## ជំពូកអាល់ហ្វាទីហះ

១-ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

២-រាល់ការសរសើរ គឺចំពោះអល់ឡោះដែលជាម្ចាស់គ្រប់គ្រងពិភពទាំងអស់។

៣-ជាម្ចាស់មហាសប្បុរស មហាអាណិតស្រឡាញ់។

៤-ជាស្ដេច( គ្រប់គ្រង) នៃថ្ងៃជំនុំជំរះ( បរលោក) ។

៥-ចំពោះទ្រង់តែមួយគត់ដែលពួកយើងគោរពសក្ការៈ ហើយចំពោះទ្រង់តែមួយគត់ដែលពួកយើងសុំឱ្យជួយ។

៦-សូមទ្រង់មេត្តាចង្អុលបង្ហាញដល់ពួកយើងនូវមាគ៌ាដ៏ត្រឹមត្រូវផងចុះ។

៧-គឺមាគ៌ារបស់បណ្ដាអ្នកដែលទ្រង់បានប្រទាននៀកម៉ាត់[១] ដល់ពួកគេ ពុំមែនជា( មាគ៌ា) អ្នកដែលត្រូវគេខឹងសម្បា និងពុំមែនជា( មាគ៌ា) ពួកដែលវង្វេងឡើយ។

## ជំពូកអាល់ហ្ពាករ៉ោះ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-អាលីហ្វ ឡាម មីម[២] ។

២-នេះគឺជាគម្ពីរ( គួរអាន) ដែលគ្មានការសង្ស័យឡើយនៅក្នុងវា។ វាគឺជាការចង្អុលបង្ហាញចំពោះបណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ។

៣-គឺបណ្ដាអ្នកដែលមានជំនឿនឹងប្រការអាថ៌កំបាំង[៣] ហើយប្រតិបត្តិសឡាត[៤] និងបរិច្ចាគមួយចំនួននូវអ្វីដែលយើងបានប្រទានឱ្យពួកគេ។

سورة الفاتحة

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ ١

ٱلۡحَمۡدُ لِلَّهِ رَبِّ ٱلۡعَٰلَمِينَ ٢

ٱلرَّحۡمَٰنِ ٱلرَّحِيمِ ٣

مَٰلِكِ يَوۡمِ ٱلدِّينِ ٤

إِيَّاكَ نَعۡبُدُ وَإِيَّاكَ نَسۡتَعِينُ ٥

ٱهۡدِنَا ٱلصِّرَٰطَ ٱلۡمُسۡتَقِيمَ ٦

صِرَٰطَ ٱلَّذِينَ أَنۡعَمۡتَ عَلَيۡهِمۡ غَيۡرِ
ٱلۡمَغۡضُوبِ عَلَيۡهِمۡ وَلَا ٱلضَّآلِّينَ ٧

سورة البقرة

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

الٓمٓ ١

ذَٰلِكَ ٱلۡكِتَٰبُ لَا رَيۡبَۛ فِيهِۛ هُدٗى
لِّلۡمُتَّقِينَ ٢

ٱلَّذِينَ يُؤۡمِنُونَ بِٱلۡغَيۡبِ وَيُقِيمُونَ ٱلصَّلَوٰةَ
وَمِمَّا رَزَقۡنَٰهُمۡ يُنفِقُونَ ٣

---

១-នៀកម៉ាត់ : អ្វីៗដែលអល់ឡោះប្រទានឱ្យ។

២-ព្យញ្ជនៈទាំងបីនេះគ្មានអ្នកណាដឹងពីអត្ថន័យរបស់វាទេ លើកលែងតែអល់ឡោះមួយគត់។

៣-ដូចជាជឿលើអល់ឡោះ ម៉ាឡាអ៊ីកាត់ ឋានសួគ៌ ឋាននរក ភ័ព្វសំណាងល្អ សំណាងអាក្រក់ ។ល។ ៤-សឡាត : ថ្វាយបង្គំ ។

وَٱلَّذِينَ يُؤۡمِنُونَ بِمَآ أُنزِلَ إِلَيۡكَ وَمَآ أُنزِلَ مِن قَبۡلِكَ وَبِٱلۡأٓخِرَةِ هُمۡ يُوقِنُونَ ﴿٤﴾

៤-និងបណ្ដាអ្នកដែលមានជំនឿលើអ្វីដែលគេបានបញ្ចុះឱ្យអ្នក (គម្ពីរគួរអាន) និងអ្វីដែលគេបានបញ្ចុះពីមុនអ្នក(ដូចជា គម្ពីរតាវ៉រ៉ត គម្ពីរអ៊ីញជីល...) ហើយពួកគេជឿយ៉ាងពិតប្រាកដចំពោះថ្ងៃបរលោក។

أُوْلَٰٓئِكَ عَلَىٰ هُدٗى مِّن رَّبِّهِمۡۖ وَأُوْلَٰٓئِكَ هُمُ ٱلۡمُفۡلِحُونَ ﴿٥﴾

៥-អ្នកទាំងនោះហើយដែលស្ថិតនៅលើការចង្អុលបង្ហាញពីម្ចាស់របស់ពួកគេ ហើយអ្នកទាំងនោះគឺជាអ្នកដែលជោគជ័យ។

إِنَّ ٱلَّذِينَ كَفَرُواْ سَوَآءٌ عَلَيۡهِمۡ ءَأَنذَرۡتَهُمۡ أَمۡ لَمۡ تُنذِرۡهُمۡ لَا يُؤۡمِنُونَ ﴿٦﴾

៦-ពិតប្រាកដណាស់ ពួកដែលប្រឆាំង(នឹងគម្ពីរគួរអាន) ទោះបីជាអ្នក(មូហាំម៉ាត់)ដាស់តឿនព្រមានពួកគេ ឬមិនដាស់តឿនព្រមានពួកគេ ក៏ពួកគេនៅតែមិនជឿដដែល។

خَتَمَ ٱللَّهُ عَلَىٰ قُلُوبِهِمۡ وَعَلَىٰ سَمۡعِهِمۡۖ وَعَلَىٰٓ أَبۡصَٰرِهِمۡ غِشَٰوَةٞۖ وَلَهُمۡ عَذَابٌ عَظِيمٞ ﴿٧﴾

៧-អល់ឡោះបានបោះត្រាភ្ជិតលើចិត្តរបស់ពួកគេ និងត្រចៀករបស់ពួកគេ ហើយនិងនៅលើភ្នែករបស់ពួកគេមានរបាំង ហើយពួកគេនឹងទទួលទារុណកម្មយ៉ាងធ្ងន់ធ្ងរបំផុត។

وَمِنَ ٱلنَّاسِ مَن يَقُولُ ءَامَنَّا بِٱللَّهِ وَبِٱلۡيَوۡمِ ٱلۡأٓخِرِ وَمَا هُم بِمُؤۡمِنِينَ ﴿٨﴾

៨-ហើយមានមនុស្សមួយចំនួន(ពួកពុតត្បុត)និយាយថាៈ ពួកយើងបានជឿលើអល់ឡោះនិងថ្ងៃបរលោក ខណៈដែលពួកគេមិនមែនជាអ្នកមានជំនឿ។

يُخَٰدِعُونَ ٱللَّهَ وَٱلَّذِينَ ءَامَنُواْ وَمَا يَخۡدَعُونَ إِلَّآ أَنفُسَهُمۡ وَمَا يَشۡعُرُونَ ﴿٩﴾

៩-ពួកគេកំពុងតែបោកបញ្ឆោតអល់ឡោះ និងបណ្ដាអ្នកដែលមានជំនឿ។ ផ្ទុយទៅវិញពួកគេកំពុងតែបោកបញ្ឆោតខ្លួនឯង តែពួកគេមិនដឹងខ្លួនឡើយ។

فِي قُلُوبِهِم مَّرَضٞ فَزَادَهُمُ ٱللَّهُ مَرَضٗاۖ وَلَهُمۡ عَذَابٌ أَلِيمُۢ بِمَا كَانُواْ يَكۡذِبُونَ ﴿١٠﴾

១០-នៅក្នុងចិត្តរបស់ពួកគេគឺមានជម្ងឺ(មន្ទិលសង្ស័យ)។ ដូច្នេះ អល់ឡោះបានបន្ថែមជម្ងឺនេះលើពួកគេថែមទៀត ហើយពួកគេនឹងទទួលទារុណកម្មយ៉ាងឈឺចាប់ដោយសារតែពួកគេបានភូតកុហក។

وَإِذَا قِيلَ لَهُمۡ لَا تُفۡسِدُواْ فِي ٱلۡأَرۡضِ قَالُوٓاْ إِنَّمَا نَحۡنُ مُصۡلِحُونَ ﴿١١﴾

១១-ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកគេថាៈ ចូរពួកអ្នកកុំបង្កវិនាសកម្មនៅលើផែនដីនេះ ពួកគេបានឆ្លើយថាៈ តាមពិតពួកយើងគ្រាន់តែជាអ្នកផ្សះផ្សាប៉ុណ្ណោះ។

أَلَآ إِنَّهُمۡ هُمُ ٱلۡمُفۡسِدُونَ وَلَٰكِن لَّا

១២-ចូរដឹងថា! ពិតប្រាកដណាស់ ពួកគេគឺជាអ្នកដែលបង្កវិនាសកម្ម ក៏ប៉ុន្តែពួកគេមិនដឹងខ្លួនឡើយ។

يَشۡعُرُونَ ﴿١٢﴾

وَإِذَا قِيلَ لَهُمۡ ءَامِنُواْ كَمَآ ءَامَنَ ٱلنَّاسُ قَالُوٓاْ
أَنُؤۡمِنُ كَمَآ ءَامَنَ ٱلسُّفَهَآءُۗ أَلَآ إِنَّهُمۡ هُمُ
ٱلسُّفَهَآءُ وَلَٰكِن لَّا يَعۡلَمُونَ ﴿١٣﴾

១៣-ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកគេថា: ចូរពួកអ្នកជឿដូចអ្វីដែលមនុស្ស( អ្នកមានជំនឿ ) បានជឿ ។ ពួកគេបានតបថា: តើឱ្យពួកយើងជឿដូចមនុស្សឆោតល្ងង់យ៉ាងដូចម្ដេចទៅ? ចូរដឹងថា: ពិតប្រាកដណាស់ ពួកគេគឺជាពួកដែលឆោតល្ងង់ ក៏ប៉ុន្តែពួកគេមិនដឹងឡើយ ។

وَإِذَا لَقُواْ ٱلَّذِينَ ءَامَنُواْ قَالُوٓاْ ءَامَنَّا وَإِذَا
خَلَوۡاْ إِلَىٰ شَيَٰطِينِهِمۡ قَالُوٓاْ إِنَّا مَعَكُمۡ إِنَّمَا
نَحۡنُ مُسۡتَهۡزِءُونَ ﴿١٤﴾

១៤-ហើយនៅពេលដែលពួកគេបានជួបនឹងបណ្ដាអ្នកមានជំនឿពួកគេបាននិយាយអះអាងថា: ពួកយើងបានជឿដូចពួកអ្នកដែរ ។ តែនៅពេលដែលពួកគេបានវិលត្រឡប់ទៅជួបនឹងមេដឹកនាំរបស់ពួកគេវិញ ពួកគេបាននិយាយថា: ពិតប្រាកដណាស់ ពួកយើងនៅជាមួយពួកអ្នក( ប្រកាន់ជំនឿដូចពួកអ្នកដែរ) តាមការពិតពួកយើងគ្រាន់តែចំអកលេងសើចប៉ុណ្ណោះ ។

ٱللَّهُ يَسۡتَهۡزِئُ بِهِمۡ وَيَمُدُّهُمۡ فِي طُغۡيَٰنِهِمۡ
يَعۡمَهُونَ ﴿١٥﴾

១៥-អល់ឡោះចំអកលេងសើចចំពោះពួកគេវិញ ហើយទ្រង់បន្តឱ្យពួកគេស្ថិតនៅក្នុងភាពវង្វេងរបស់ពួកគេ ដោយពួកគេស្រពេចស្រពិល ។

أُوْلَٰٓئِكَ ٱلَّذِينَ ٱشۡتَرَوُاْ ٱلضَّلَٰلَةَ بِٱلۡهُدَىٰ فَمَا
رَبِحَت تِّجَٰرَتُهُمۡ وَمَا كَانُواْ مُهۡتَدِينَ ﴿١٦﴾

១៦-ពួកអ្នកទាំងនោះ គឺជាពួកដែលបានយកការចង្អុលបង្ហាញមកប្ដូរយកភាពវង្វេង ហើយការធ្វើជំនួញរបស់ពួកគេបែបនេះគ្មានចំណេញអ្វីឡើយ ហើយពួកគេក៏មិនមែនជាពួកដែលបានទទួលការចង្អុលបង្ហាញដែរ ។

مَثَلُهُمۡ كَمَثَلِ ٱلَّذِي ٱسۡتَوۡقَدَ نَارٗا فَلَمَّآ
أَضَآءَتۡ مَا حَوۡلَهُۥ ذَهَبَ ٱللَّهُ بِنُورِهِمۡ
وَتَرَكَهُمۡ فِي ظُلُمَٰتٖ لَّا يُبۡصِرُونَ ﴿١٧﴾

១៧-ការប្រៀបធៀបរបស់ពួកគេ គឺប្រៀបដូចនឹងអ្នកដែលបានបង្កាត់ភ្លើង ហើយនៅពេលដែលភ្លើងបានបំភ្លឺនូវអ្វីៗដែលនៅជុំវិញគេ អល់ឡោះបានបំបាត់ពន្លឺរបស់ពួកគេទៅវិញ ហើយទុកឱ្យពួកគេស្ថិតនៅក្នុងភាពងងឹតដោយពួកគេមើលមិនឃើញអ្វីឡើយ ។

صُمُّۢ بُكۡمٌ عُمۡيٞ فَهُمۡ لَا يَرۡجِعُونَ ﴿١٨﴾

១៨-( ពួកគេ) ថ្លង់ គ និងងងឹត ហេតុដូច្នេះពួកគេមិនអាចវិលត្រឡប់( ទៅរកមាគ៌ាត្រឹមត្រូវ) វិញបានឡើយ ។

أَوۡ كَصَيِّبٖ مِّنَ ٱلسَّمَآءِ فِيهِ ظُلُمَٰتٞ وَرَعۡدٞ
وَبَرۡقٞ يَجۡعَلُونَ أَصَٰبِعَهُمۡ فِيٓ ءَاذَانِهِم مِّنَ

១៩-ឬដូចជាភ្លៀងធ្លាក់យ៉ាងខ្លាំងពីលើមេឃពោរពេញទៅដោយភាពងងឹត ផ្គររន្ទះ និងផ្លេកបន្ទោរ ។ ពួកគេក៏យកម្រាមដៃ

ٱلصَّوَٰعِقِ حَذَرَ ٱلۡمَوۡتِۚ وَٱللَّهُ مُحِيطُۢ بِٱلۡكَٰفِرِينَ ﴿١٩﴾

ញ៉ុករន្ធត្រចៀករបស់ពួកគេ ដើម្បីការពារពីសំឡេងរន្ទះដោយភ័យខ្លាចពីការស្លាប់ ។ ហើយអល់ឡោះដឹងជ្រួតជ្រាបចំពោះពួកដែលប្រឆាំងទាំងនោះ ។

يَكَادُ ٱلۡبَرۡقُ يَخۡطَفُ أَبۡصَٰرَهُمۡۖ كُلَّمَآ أَضَآءَ لَهُم مَّشَوۡاْ فِيهِ وَإِذَآ أَظۡلَمَ عَلَيۡهِمۡ قَامُواْۚ وَلَوۡ شَآءَ ٱللَّهُ لَذَهَبَ بِسَمۡعِهِمۡ وَأَبۡصَٰرِهِمۡۚ إِنَّ ٱللَّهَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ﴿٢٠﴾

២០-ផ្លេកបន្ទោរជិតតែនឹងឆាបឆក់ក្រសៃភ្នែករបស់ពួកគេ ។ រាល់ពេលដែលផ្លេកបន្ទោរបានជះពន្លឺដល់ពួកគេ ពួកគេបានបន្តដំណើរទៅមុខ តែនៅពេលដែលភាពងងឹតបានគ្របដណ្តប់ទៅលើពួកគេ ពួកគេឈរស្ងៀមនៅមួយកន្លែង ។ ប្រសិនបើអល់ឡោះមានចេតនា ទ្រង់ពិតជានឹងដកយកការស្តាប់ឮ និងការមើលឃើញរបស់ពួកគេ ។ ពិតប្រាកដណាស់អល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

يَٰٓأَيُّهَا ٱلنَّاسُ ٱعۡبُدُواْ رَبَّكُمُ ٱلَّذِي خَلَقَكُمۡ وَٱلَّذِينَ مِن قَبۡلِكُمۡ لَعَلَّكُمۡ تَتَّقُونَ ﴿٢١﴾

២១-ឱមនុស្សលោក! ចូរពួកអ្នកគោរពសក្ការៈចំពោះម្ចាស់របស់ពួកអ្នកដែលបានបង្កើតពួកអ្នក និងមនុស្សជំនាន់មុនពួកអ្នក ដើម្បីឱ្យពួកអ្នកកោតខ្លាចអល់ឡោះ ។

ٱلَّذِي جَعَلَ لَكُمُ ٱلۡأَرۡضَ فِرَٰشٗا وَٱلسَّمَآءَ بِنَآءٗ وَأَنزَلَ مِنَ ٱلسَّمَآءِ مَآءٗ فَأَخۡرَجَ بِهِۦ مِنَ ٱلثَّمَرَٰتِ رِزۡقٗا لَّكُمۡۖ فَلَا تَجۡعَلُواْ لِلَّهِ أَندَادٗا وَأَنتُمۡ تَعۡلَمُونَ ﴿٢٢﴾

២២-ទ្រង់ជាអ្នកដែលបានបង្កើតផែនដីមានសណ្ឋានលាតសន្ធឹង និងមេឃធ្វើជាដំបូលសម្រាប់ពួកអ្នក ហើយទ្រង់បានបញ្ចុះទឹកភ្លៀងពីលើមេឃ ហើយទ្រង់បានបញ្ចេញមកវិញតាមរយៈទឹកភ្លៀងនេះនូវផលានុផលជាច្រើនជាចំណីអាហារសម្រាប់ពួកអ្នក ។ ហេតុនេះ ចូរពួកអ្នកកុំធ្វើស្ហ៊ីរក[1] ចំពោះអល់ឡោះក្នុងពេលដែលពួកអ្នកដឹងច្បាស់ហើយនោះ ។

وَإِن كُنتُمۡ فِي رَيۡبٖ مِّمَّا نَزَّلۡنَا عَلَىٰ عَبۡدِنَا فَأۡتُواْ بِسُورَةٖ مِّن مِّثۡلِهِۦ وَٱدۡعُواْ شُهَدَآءَكُم مِّن دُونِ ٱللَّهِ إِن كُنتُمۡ صَٰدِقِينَ ﴿٢٣﴾

២៣-ប្រសិនបើពួកអ្នកមានការសង្ស័យអំពីអ្វីដែលយើងបានបញ្ចុះមកឱ្យខ្ញុំរបស់យើង(មូហាំម៉ាត់)នោះ ចូរពួកអ្នកនាំមកនូវជំពូកណាមួយដែលដូចជំពូកនៃគម្ពីរគួរអាន ហើយចូរហៅសាក្សីរបស់ពួកអ្នកក្រៅពីអល់ឡោះមក ប្រសិនបើការអះអាងរបស់ពួកអ្នកពិតជាត្រឹមត្រូវមែននោះ ។

فَإِن لَّمۡ تَفۡعَلُواْ وَلَن تَفۡعَلُواْ فَٱتَّقُواْ ٱلنَّارَ ٱلَّتِي وَقُودُهَا ٱلنَّاسُ وَٱلۡحِجَارَةُۖ أُعِدَّتۡ

២៤-តែប្រសិនបើពួកអ្នកមិនអាចធ្វើវាបានឥឡូវនេះទេ ហើយពួកអ្នកក៏នឹងមិនអាចធ្វើវាបានដែរនៅពេលអនាគតនោះ

---

១-ស្ហ៊ីរក : ការគោរពសក្ការៈព្រះផ្សេងរួមជាមួយអល់ឡោះ ។

لِلۡكَٰفِرِينَ ٢٤

ដូច្នេះចូរពួកអ្នកខ្លាចភ្លើងនរកដែលគ្រឿងបញ្ឆេះរបស់វាគឺមនុស្ស និងដុំថ្មដែលគេបានរៀបចំសម្រាប់ពួកដែលប្រឆាំង ។

وَبَشِّرِ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ
أَنَّ لَهُمۡ جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُۖ
كُلَّمَا رُزِقُواْ مِنۡهَا مِن ثَمَرَةٖ رِّزۡقٗا قَالُواْ
هَٰذَا ٱلَّذِي رُزِقۡنَا مِن قَبۡلُۖ وَأُتُواْ بِهِۦ
مُتَشَٰبِهٗاۖ وَلَهُمۡ فِيهَآ أَزۡوَٰجٞ مُّطَهَّرَةٞۖ وَهُمۡ
فِيهَا خَٰلِدُونَ ٢٥

២៥-ហើយចូរអ្នក( មូហាំម៉ាត់) ផ្ដល់ដំណឹងរីករាយដល់បណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អថា: ពិតប្រាកដណាស់ ពួកគេនឹងទទួលបានឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ។ រាល់ពេលដែលពួកគេត្រូវបានគេផ្ដល់លាភសក្ការៈជាផ្លែឈើមួយប្រភេទក្នុងឋានសួគ៌ ពួកគេតែងតែនិយាយថា: នេះជាផ្លែឈើដែលពួកយើងត្រូវបានគេផ្ដល់ឱ្យកាលពីមុនដែរ ។ ហើយពួកគេត្រូវបានគេផ្ដល់ផ្លែឈើឱ្យដែលមានសណ្ឋានដូចៗគ្នា ( តែមានរសជាតិខុសគ្នា) ។ ហើយនៅក្នុងឋានសួគ៌នោះពួកគេមានភរិយាដ៏ស្អាតស្អំជាច្រើន ហើយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។

۞ إِنَّ ٱللَّهَ لَا يَسۡتَحۡيِۦٓ أَن يَضۡرِبَ مَثَلٗا مَّا
بَعُوضَةٗ فَمَا فَوۡقَهَاۚ فَأَمَّا ٱلَّذِينَ ءَامَنُواْ
فَيَعۡلَمُونَ أَنَّهُ ٱلۡحَقُّ مِن رَّبِّهِمۡۖ وَأَمَّا ٱلَّذِينَ
كَفَرُواْ فَيَقُولُونَ مَاذَآ أَرَادَ ٱللَّهُ بِهَٰذَا
مَثَلٗاۘ يُضِلُّ بِهِۦ كَثِيرٗا وَيَهۡدِي بِهِۦ كَثِيرٗاۚ
وَمَا يُضِلُّ بِهِۦٓ إِلَّا ٱلۡفَٰسِقِينَ ٢٦

២៦-ពិតប្រាកដណាស់ អល់ឡោះមិនខ្មាស់អៀនឡើយក្នុងការលើកជាឧទាហរណ៍អំពីសត្វមូស ឬអ្វីដែលតូចឬធំជាងនេះ ។ ចំពោះបណ្ដាអ្នកដែលមានជំនឿ គឺពួកគេដឹងថា: ពិតប្រាកដណាស់ វាជារឿងពិតមកពីម្ចាស់របស់ពួកគេ ។ រីឯពួកដែលប្រឆាំងវិញនោះ គឺពួកគេនឹងនិយាយថា: តើអល់ឡោះចង់បានអ្វីពីការលើកជាឧទាហរណ៍នេះ? តាមរយៈឧទាហរណ៍នេះទ្រង់ធ្វើឱ្យ( មនុស្ស) វង្វេងជាច្រើន ហើយទ្រង់ក៏ចង្អុលបង្ហាញជាច្រើនដែរ ។ ហើយទ្រង់មិនធ្វើឱ្យអ្នកណាម្នាក់វង្វេងដោយសារវាឡើយ លើកលែងតែពួកដែលមិនគោរពតាមបទបញ្ជារបស់ទ្រង់ប៉ុណ្ណោះ ។

ٱلَّذِينَ يَنقُضُونَ عَهۡدَ ٱللَّهِ مِنۢ بَعۡدِ مِيثَٰقِهِۦ
وَيَقۡطَعُونَ مَآ أَمَرَ ٱللَّهُ بِهِۦٓ أَن يُوصَلَ
وَيُفۡسِدُونَ فِي ٱلۡأَرۡضِۚ أُوْلَٰٓئِكَ هُمُ
ٱلۡخَٰسِرُونَ ٢٧

២៧-ពួកដែលក្បត់នឹងកិច្ចសន្យារបស់អល់ឡោះបន្ទាប់ពីមានការព្រមព្រៀងវារួច ហើយពួកគេកាត់ផ្ដាច់នូវអ្វីដែលអល់ឡោះបានបញ្ជានឹងវាឱ្យផ្សារភ្ជាប់សាច់សាលោហិត ហើយពួកគេបង្កវិនាសកម្មនៅលើផែនដី ។ ពួកទាំងនោះហើយគឺជាពួកដែលខាតបង់ ។

كَيۡفَ تَكۡفُرُونَ بِٱللَّهِ وَكُنتُمۡ أَمۡوَٰتٗا
فَأَحۡيَٰكُمۡۖ ثُمَّ يُمِيتُكُمۡ ثُمَّ يُحۡيِيكُمۡ ثُمَّ إِلَيۡهِ

២៨-តើពួកអ្នកប្រឆាំងនឹងអល់ឡោះយ៉ាងដូចម្ដេច ខណៈដែលពួកអ្នកមិនទាន់មានពីមុនមក( មិនទាន់កើត) ហើយទ្រង់បានបង្កើតពួកអ្នកឱ្យមានជីវិត ក្រោយមកទ្រង់ឱ្យពួកអ្នកស្លាប់ទៅវិញ បន្ទាប់

تُرۡجَعُونَ ٢٨

មកទ្រង់ធ្វើឱ្យពួកអ្នករស់ឡើងវិញ(នៅថ្ងៃបរលោក) បន្ទាប់មកទៀតពួកអ្នកនឹងត្រូវវិលត្រឡប់ទៅចំពោះទ្រង់វិញនោះ?

هُوَ ٱلَّذِي خَلَقَ لَكُم مَّا فِي ٱلۡأَرۡضِ
جَمِيعٗا ثُمَّ ٱسۡتَوَىٰٓ إِلَى ٱلسَّمَآءِ فَسَوَّىٰهُنَّ
سَبۡعَ سَمَٰوَٰتٖۚ وَهُوَ بِكُلِّ شَيۡءٍ عَلِيمٞ ٢٩

២៩-ទ្រង់គឺជាអ្នកដែលបានបង្កើតអ្វីៗទាំងអស់នៅលើផែនដីនេះសម្រាប់ពួកអ្នក។ បន្ទាប់មកទ្រង់ឆ្ពោះទៅបង្កើតមេឃ រួចក៏បានបង្កើតមេឃប្រាំពីរជាន់។ ហើយទ្រង់មហាដឹងនូវអ្វីៗទាំងអស់។

وَإِذۡ قَالَ رَبُّكَ لِلۡمَلَٰٓئِكَةِ إِنِّي جَاعِلٞ فِي
ٱلۡأَرۡضِ خَلِيفَةٗۖ قَالُوٓاْ أَتَجۡعَلُ فِيهَا مَن
يُفۡسِدُ فِيهَا وَيَسۡفِكُ ٱلدِّمَآءَ وَنَحۡنُ نُسَبِّحُ
بِحَمۡدِكَ وَنُقَدِّسُ لَكَۖ قَالَ إِنِّيٓ أَعۡلَمُ مَا لَا
تَعۡلَمُونَ ٣٠

៣០-ហើយ(ចូរចងចាំ)នៅពេលដែលម្ចាស់របស់អ្នកបានមានបន្ទូលទៅកាន់ម៉ាឡាអ៊ីកាត់[១] ថា: ពិតប្រាកដណាស់ យើងនឹងបង្កើតអ្នកគ្រប់គ្រង(មនុស្សលោកពីមួយជំនាន់ទៅមួយជំនាន់)នៅលើផែនដីនេះ។ ពួកគេបានតបវិញថា: តើទ្រង់នឹងបង្កើតនៅលើផែនដីនេះនូវក្រុមដែលនឹងបង្កវិនាសកម្ម និងបង្ហូរឈាមគ្នានៅលើវាឬ? ចំណែកឯពួកយើងវិញ គឺជាអ្នកលើកតម្កើងដោយការសរសើរ និងបញ្ជាក់ពីភាពបរិសុទ្ធរបស់ទ្រង់។ ទ្រង់បានមានបន្ទូលតបវិញថា: ពិតប្រាកដណាស់ យើងដឹងបំផុតនូវអ្វីដែលពួកអ្នកមិនដឹង។

وَعَلَّمَ ءَادَمَ ٱلۡأَسۡمَآءَ كُلَّهَا ثُمَّ عَرَضَهُمۡ عَلَى
ٱلۡمَلَٰٓئِكَةِ فَقَالَ أَنۢبِـُٔونِي بِأَسۡمَآءِ هَٰٓؤُلَآءِ إِن
كُنتُمۡ صَٰدِقِينَ ٣١

៣១-ហើយអល់ឡោះបានបង្រៀនអាដាំនូវឈ្មោះអ្វីៗទាំងអស់។ ក្រោយមកទ្រង់បានបង្ហាញអ្វីៗទាំងនោះទៅម៉ាឡាអ៊ីកាត់ រួចទ្រង់បានមានបន្ទូលថា: ចូរពួកអ្នកប្រាប់យើងនូវឈ្មោះអ្វីៗទាំងអស់នេះ ប្រសិនបើពួកអ្នកជាអ្នកដឹងពិតប្រាកដមែននោះ។

قَالُواْ سُبۡحَٰنَكَ لَا عِلۡمَ لَنَآ إِلَّا مَا عَلَّمۡتَنَآۖ
إِنَّكَ أَنتَ ٱلۡعَلِيمُ ٱلۡحَكِيمُ ٣٢

៣២-ពួកម៉ាឡាអ៊ីកាត់បានឆ្លើយថា: ឱទ្រង់មហាជ្រះស្អាត! ពួកយើងពិតជាមិនអាចដឹងក្រៅពីអ្វីដែលទ្រង់បានបង្រៀនពួកយើងនោះឡើយ។ ពិតប្រាកដណាស់ មានតែទ្រង់ម្នាក់គត់ដែលមហាដឹង មហាគតិបណ្ឌិត។

قَالَ يَٰٓـَٔادَمُ أَنۢبِئۡهُم بِأَسۡمَآئِهِمۡۖ فَلَمَّآ أَنۢبَأَهُم
بِأَسۡمَآئِهِمۡ قَالَ أَلَمۡ أَقُل لَّكُمۡ إِنِّيٓ أَعۡلَمُ غَيۡبَ
ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَأَعۡلَمُ مَا تُبۡدُونَ وَمَا

៣៣-អល់ឡោះបានមានបន្ទូលថា: ឱអាដាំ! ចូរអ្នកប្រាប់ពួកគេនូវឈ្មោះអ្វីៗទាំងនេះ។ ហើយនៅពេលដែលអាដាំបានប្រាប់ពួកគេនូវឈ្មោះទាំងនេះរួច ទ្រង់បានមានបន្ទូលថា: តើយើងមិនបានប្រាប់ពួកអ្នកទេឬថាពិតប្រាកដណាស់យើងដឹងបំផុតនូវប្រការអាថិ-

១-ម៉ាឡាអ៊ីកាត់ : ទេវតា។ ទេវតាក៏ជាខ្ញុំរបស់អល់ឡោះដែរ ដែលទ្រង់បានបង្កើតពួកគេអំពីពន្លឺ។

كُنتُمۡ تَكۡتُمُونَ ٣٣

កំបាំងនៃមេឃជាច្រើនជាន់និងផែនដី ហើយយើងដឹងផងដែរនូវអ្វីៗដែលពួកអ្នកលាតត្រដាង និងអ្វីៗដែលពួកអ្នកបានលាក់បាំងនោះ?

وَإِذۡ قُلۡنَا لِلۡمَلَٰٓئِكَةِ ٱسۡجُدُواْ لِأٓدَمَ فَسَجَدُوٓاْ
إِلَّآ إِبۡلِيسَ أَبَىٰ وَٱسۡتَكۡبَرَ وَكَانَ مِنَ
ٱلۡكَٰفِرِينَ ٣٤

៣៤-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានមានបន្ទូលទៅកាន់បណ្ដាម៉ាឡាអ៊ីកាត់ថា: ចូរពួកអ្នកស៊ូជូត[1] ចំពោះអាដាំ។ ពេលនោះពួកគេបានស៊ូជូតទាំងអស់គ្នា លើកលែងតែអ៊ីព្លីស[2] ប៉ុណ្ណោះ ដែលវាបានប្រកែកនិងមានអំនួត ហើយវាក៏បានស្ថិតក្នុងចំណោមពួកដែលប្រឆាំង។

وَقُلۡنَا يَٰٓـَٔادَمُ ٱسۡكُنۡ أَنتَ وَزَوۡجُكَ
ٱلۡجَنَّةَ وَكُلَا مِنۡهَا رَغَدًا حَيۡثُ شِئۡتُمَا
وَلَا تَقۡرَبَا هَٰذِهِ ٱلشَّجَرَةَ فَتَكُونَا مِنَ
ٱلظَّٰلِمِينَ ٣٥

៣៥-ហើយយើងបានមានបន្ទូលថា: ឱអាដាំ! ចូរអ្នកនិងភរិយារបស់អ្នកស្នាក់នៅក្នុងឋានសួគ៌នេះ ហើយចូរអ្នកទាំងពីរបរិភោគអំពីវា(ផលានុផល)ដោយរីករាយតាមសេចក្ដីត្រូវការចុះ តែអ្នកទាំងពីរមិនត្រូវទៅជិតដើមឈើមួយនេះឡើយ។ បើមិនដូច្នោះទេ អ្នកទាំងពីរនឹងស្ថិតនៅក្នុងចំណោមពួកដែលបំពាន។

فَأَزَلَّهُمَا ٱلشَّيۡطَٰنُ عَنۡهَا فَأَخۡرَجَهُمَا مِمَّا
كَانَا فِيهِۖ وَقُلۡنَا ٱهۡبِطُواْ بَعۡضُكُمۡ لِبَعۡضٍ
عَدُوّٞۖ وَلَكُمۡ فِي ٱلۡأَرۡضِ مُسۡتَقَرّٞ وَمَتَٰعٌ
إِلَىٰ حِينٖ ٣٦

៣៦-ហើយស្ហៃតន[3] បានធ្វើឱ្យពួកគាត់ទាំងពីរឃ្លាតចេញពីឋានសួគ៌ និងធ្វើឱ្យឃ្លាតឆ្ងាយពីអ្វីៗដែលពួកគាត់ទាំងពីរធ្លាប់មាននៅទីនោះ។ ហើយយើងបានមានបន្ទូលថា: ចូរពួកអ្នក(អាដាំ ហាវ៉ា អ៊ីព្លីស)ចុះទៅរស់នៅ(លើផែនដី)ក្នុងភាពជាសត្រូវនឹងគ្នាចុះ ហើយផែនដីគឺជាកន្លែងរស់នៅរបស់ពួកអ្នក និងមានភាពសប្បាយរីករាយរហូតដល់អវសាននៃជីវិត។

فَتَلَقَّىٰٓ ءَادَمُ مِن رَّبِّهِۦ كَلِمَٰتٖ فَتَابَ عَلَيۡهِۚ
إِنَّهُۥ هُوَ ٱلتَّوَّابُ ٱلرَّحِيمُ ٣٧

៣៧-បន្ទាប់មកអាដាំទទួលបានការណែនាំពីម្ចាស់របស់គេនូវពាក្យសារភាពកំហុស ហើយទ្រង់ក៏បានអភ័យទោសឱ្យគេ។ ពិតប្រាកដណាស់ ទ្រង់ជាអ្នកទទួលយកការសារភាពកំហុស ជាអ្នកអាណិតស្រឡាញ់បំផុត។

قُلۡنَا ٱهۡبِطُواْ مِنۡهَا جَمِيعٗاۖ فَإِمَّا يَأۡتِيَنَّكُم مِّنِّي
هُدٗى فَمَن تَبِعَ هُدَايَ فَلَا خَوۡفٌ عَلَيۡهِمۡ

៣៨-យើងបានមានបន្ទូលថា: ចូរពួកអ្នកទាំងអស់គ្នា(អាដាំ ហាវ៉ា អ៊ីព្លីស)ចុះចេញពីឋានសួគ៌នេះ។ ហើយប្រសិនបើមានការណែនាំរបស់យើងមកដល់ពួកអ្នក ហើយអ្នកណាដែលបានដើរ

---

១-ស៊ូជូត : ក្រាបគោរព ។

២-អ៊ីព្លីស : ជាអ្នកដែលអល់ឡោះបានបង្កើតអំពីភ្លើង ជាអ្នកដែលញុះញង់មនុស្សលោកឱ្យដើរតាមផ្លូវខុស។

៣-ស្ហៃតន : គឺជាឈ្មោះរបស់អ៊ីព្លីស ហើយគេឱ្យឈ្មោះស្ហៃតននេះទៅលើអ្នកដែលប្រព្រឹត្តអំពើអាក្រក់ដូចជាជិននិងមនុស្ស។

وَلَا هُمۡ يَحۡزَنُونَ ٣٨

តាមការណែនាំរបស់យើងចំពោះពួកគេ គឺពួកគេគ្មានការភ័យខ្លាច និងព្រួយបារម្ភអ្វីឡើយ ។

وَٱلَّذِينَ كَفَرُواْ وَكَذَّبُواْ بِـَٔايَٰتِنَآ أُوْلَٰٓئِكَ
أَصۡحَٰبُ ٱلنَّارِۖ هُمۡ فِيهَا خَٰلِدُونَ ٣٩

៣៩-ចំណែកពួកដែលបានប្រឆាំង ហើយបានបដិសេធនឹងអាយ៉ាត់ៗ[1] របស់យើង ពួកនោះគឺជាពួកនរក ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។

يَٰبَنِيٓ إِسۡرَٰٓءِيلَ ٱذۡكُرُواْ نِعۡمَتِيَ ٱلَّتِيٓ أَنۡعَمۡتُ
عَلَيۡكُمۡ وَأَوۡفُواْ بِعَهۡدِيٓ أُوفِ بِعَهۡدِكُمۡ وَإِيَّٰيَ
فَٱرۡهَبُونِ ٤٠

៤០-ឱអំបូរអ៊ីស្រាអែល! ចូរចងចាំនូវនៀកម៉ាត់ជាច្រើនរបស់យើងដែលបានផ្តល់ឱ្យពួកអ្នក ហើយចូរពួកអ្នកគោរពកិច្ចសន្យារបស់យើង យើងនឹងបំពេញកិច្ចសន្យារបស់ពួកអ្នក ។ ហើយចំពោះយើងតែមួយគត់ដែលពួកអ្នកត្រូវតែគោរពកោតខ្លាច ។

وَءَامِنُواْ بِمَآ أَنزَلۡتُ مُصَدِّقٗا لِّمَا مَعَكُمۡ وَلَا
تَكُونُوٓاْ أَوَّلَ كَافِرِۭ بِهِۦۖ وَلَا تَشۡتَرُواْ بِـَٔايَٰتِي
ثَمَنٗا قَلِيلٗا وَإِيَّٰيَ فَٱتَّقُونِ ٤١

៤១-ហើយចូរពួកអ្នកជឿនូវអ្វី(គម្ពីរគួរអាន)ដែលយើងបានបញ្ចុះដើម្បីបញ្ជាក់ឡើងវិញអំពីអ្វីដែលមាននៅជាមួយពួកអ្នក (គម្ពីរតាវរ៉ត គម្ពីរអ៊ីនជីល...) ហើយពួកអ្នកមិនត្រូវតាំងខ្លួនជាអ្នកប្រឆាំងនឹងគម្ពីរគួរអានមុនគេ និងមិនត្រូវលក់ដូរអាយ៉ាត់ៗរបស់យើងក្នុងតម្លៃបន្តិចបន្តួចនោះឡើយ ហើយចំពោះយើងតែមួយគត់ដែលពួកអ្នកត្រូវកោតខ្លាច ។

وَلَا تَلۡبِسُواْ ٱلۡحَقَّ بِٱلۡبَٰطِلِ وَتَكۡتُمُواْ
ٱلۡحَقَّ وَأَنتُمۡ تَعۡلَمُونَ ٤٢

៤២-ហើយចូរពួកអ្នកកុំលាយឡំប្រការពិតជាមួយនឹងប្រការមិនពិត ហើយពួកអ្នកកុំលាក់បាំងការពិត ខណៈដែលពួកអ្នកដឹង ។

وَأَقِيمُواْ ٱلصَّلَوٰةَ وَءَاتُواْ ٱلزَّكَوٰةَ وَٱرۡكَعُواْ مَعَ
ٱلرَّٰكِعِينَ ٤٣

៤៣-ហើយចូរពួកអ្នកប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់[2] និងរូកុ[3] ជាមួយនឹងបណ្តាអ្នកដែលរូកុ(ថ្វាយបង្គំរួមគ្នា) ។

۞ أَتَأۡمُرُونَ ٱلنَّاسَ بِٱلۡبِرِّ وَتَنسَوۡنَ أَنفُسَكُمۡ
وَأَنتُمۡ تَتۡلُونَ ٱلۡكِتَٰبَۚ أَفَلَا تَعۡقِلُونَ ٤٤

៤៤-ហេតុអ្វីបានជាពួកអ្នកប្រើឱ្យមនុស្សធ្វើល្អ តែពួកអ្នកភ្លេចខ្លួនឯងទៅវិញ ខណៈដែលពួកអ្នកកំពុងសូត្រគម្ពីរ(តាវរ៉ត) ។ តើពួកអ្នកមិនចេះគិតពិចារណាទេឬ ?

وَٱسۡتَعِينُواْ بِٱلصَّبۡرِ وَٱلصَّلَوٰةِۚ وَإِنَّهَا لَكَبِيرَةٌ إِلَّا

៤៥-ហើយចូរពួកអ្នកសុំជំនួយ(ពីអល់ឡោះ)ដោយអត់ធ្មត់

---

១-អាយ៉ាត់ : វាក្យខណ្ឌនៃគម្ពីរគួរអាន ។

២-ហ្សាកាត់ : ការបរិច្ចាគទ្រព្យសម្បត្តិតាមការកំណត់របស់សាសនាអ៊ិស្លាម ។

៣-រូកុ : ការឱនគោរព ។ រូកុនៅក្នុងវាក្យខណ្ឌនេះមានន័យថា ថ្វាយបង្គំ ។

عَلَى ٱلۡخَٰشِعِينَ ٤٥

និងប្រតិបត្តិសឡាត ។ ហើយពិតប្រាកដណាស់ វាពិតជាមានការលំបាកយ៉ាងខ្លាំង លើកលែងតែចំពោះបណ្តាអ្នកដែលឱនលំទោនកោតខ្លាចអល់ឡោះប៉ុណ្ណោះ ។

ٱلَّذِينَ يَظُنُّونَ أَنَّهُم مُّلَٰقُواْ رَبِّهِمۡ وَأَنَّهُمۡ إِلَيۡهِ رَٰجِعُونَ ٤٦

៤៦-គឺបណ្តាអ្នកដែលជឿជាក់ថាៈ ពិតប្រាកដណាស់ ពួកគេនឹងជួបម្ចាស់របស់ពួកគេ ។ ហើយពិតប្រាកដណាស់ ពួកគេនឹងត្រូវវិលត្រឡប់ទៅចំពោះទ្រង់វិញ ។

يَٰبَنِيٓ إِسۡرَٰٓءِيلَ ٱذۡكُرُواْ نِعۡمَتِيَ ٱلَّتِيٓ أَنۡعَمۡتُ عَلَيۡكُمۡ وَأَنِّي فَضَّلۡتُكُمۡ عَلَى ٱلۡعَٰلَمِينَ ٤٧

៤៧-ឱអំបូរអ៊ីស្រាអែល! ចូរចងចាំនូវនៀកម៉ាត់របស់យើងដែលយើងបានផ្តល់ឱ្យពួកអ្នក ហើយពិតប្រាកដណាស់ យើងបានលើកតម្កើងពួកអ្នកជាងគេលើលោកិយនេះ( នៅសម័យនោះ) ។

وَٱتَّقُواْ يَوۡمٗا لَّا تَجۡزِي نَفۡسٌ عَن نَّفۡسٖ شَيۡـٔٗا وَلَا يُقۡبَلُ مِنۡهَا شَفَٰعَةٞ وَلَا يُؤۡخَذُ مِنۡهَا عَدۡلٞ وَلَا هُمۡ يُنصَرُونَ ٤٨

៤៨-ហើយចូរពួកអ្នកខ្លាចថ្ងៃមួយ( ថ្ងៃបរលោក) ដែលម្នាក់ៗមិនអាចជួយអ្វីគ្នាបាន ហើយគេមិនទទួលយកការអន្តរាគមន៍ និងមិនទទួលយកការលោះពីអ្នកណាម្នាក់ឡើយ ហើយពួកនោះក៏មិនត្រូវបានគេជួយដែរ ។

وَإِذۡ نَجَّيۡنَٰكُم مِّنۡ ءَالِ فِرۡعَوۡنَ يَسُومُونَكُمۡ سُوٓءَ ٱلۡعَذَابِ يُذَبِّحُونَ أَبۡنَآءَكُمۡ وَيَسۡتَحۡيُونَ نِسَآءَكُمۡۚ وَفِي ذَٰلِكُم بَلَآءٞ مِّن رَّبِّكُمۡ عَظِيمٞ ٤٩

៤៩-ហើយ( ចូរចងចាំ) នៅពេលដែលយើងបានរំដោះពួកអ្នកឱ្យរួចផុតពីបក្សពួកហ្វៀរអោន ដែលពួកគេឱ្យពួកអ្នកភ្លក្សរសជាតិទារុណកម្មយ៉ាងព្រៃផ្សៃ ដោយសម្លាប់កូនប្រុស និងទុកជីវិតកូនស្រីរបស់ពួកអ្នក ។ នេះជាការសាកល្បងមួយយ៉ាងធំពីម្ចាស់របស់ពួកអ្នក ។

وَإِذۡ فَرَقۡنَا بِكُمُ ٱلۡبَحۡرَ فَأَنجَيۡنَٰكُمۡ وَأَغۡرَقۡنَآ ءَالَ فِرۡعَوۡنَ وَأَنتُمۡ تَنظُرُونَ ٥٠

៥០-ហើយ( ចូរចងចាំ) នៅពេលដែលយើងបានញែកសមុទ្រសម្រាប់ពួកអ្នក យើងក៏បានរំដោះពួកអ្នក ហើយយើងបានពន្លិចបក្សពួកហ្វៀរអោន ខណៈដែលពួកអ្នកមើលឃើញផ្ទាល់នឹងភ្នែក ។

وَإِذۡ وَٰعَدۡنَا مُوسَىٰٓ أَرۡبَعِينَ لَيۡلَةٗ ثُمَّ ٱتَّخَذۡتُمُ ٱلۡعِجۡلَ مِنۢ بَعۡدِهِۦ وَأَنتُمۡ ظَٰلِمُونَ ٥١

៥១-ហើយ( ចូរចងចាំ) នៅពេលដែលយើងបានសន្យា( កំណត់) ជាមួយមូសារយៈពេលសែសិបយប់ ។ ក្រោយមកនៅពេលដែលមូសាមិននៅ ពួកអ្នកបានយករូបសំណាកកូនគោមកគោរពសក្ការៈ ខណៈដែលពួកអ្នកគឺជាពួកដែលបំពាន ។

ثُمَّ عَفَوۡنَا عَنكُم مِّنۢ بَعۡدِ ذَٰلِكَ لَعَلَّكُمۡ تَشۡكُرُونَ ٥٢

៥២-ក្រោយមក យើងបានអធ្យាស្រ័យឱ្យពួកអ្នកបន្ទាប់ពី( បានប្រព្រឹត្តអំពើខុសឆ្គង) នោះ ។ សង្ឃឹមថា ពួកអ្នកនឹងដឹងគុណ ។

وَإِذۡ ءَاتَيۡنَا مُوسَى ٱلۡكِتَٰبَ وَٱلۡفُرۡقَانَ لَعَلَّكُمۡ تَهۡتَدُونَ ٥٣

៥៣-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានផ្តល់ឱ្យមូសានូវគម្ពីរ(តាវរ៉ត) ដែលមានការវែកញែក(រវាងខុស និងត្រូវ) ដើម្បីពួកអ្នកនឹងទទួលបានការណែនាំដ៏ត្រឹមត្រូវ ។

وَإِذۡ قَالَ مُوسَىٰ لِقَوۡمِهِۦ يَٰقَوۡمِ إِنَّكُمۡ ظَلَمۡتُمۡ أَنفُسَكُم بِٱتِّخَاذِكُمُ ٱلۡعِجۡلَ فَتُوبُوٓاْ إِلَىٰ بَارِئِكُمۡ فَٱقۡتُلُوٓاْ أَنفُسَكُمۡ ذَٰلِكُمۡ خَيۡرٞ لَّكُمۡ عِندَ بَارِئِكُمۡ فَتَابَ عَلَيۡكُمۡۚ إِنَّهُۥ هُوَ ٱلتَّوَّابُ ٱلرَّحِيمُ ٥٤

៥៤-ហើយ(ចូរចងចាំ) នៅពេលដែលមូសាបានពោលទៅកាន់ក្រុមរបស់គាត់ថាៈ ឱក្រុមរបស់ខ្ញុំ! ពួកអ្នកពិតជាបានបំពានលើខ្លួនឯង ដោយយករូបសំណាកកូនគោមកគោរពសក្ការៈ ។ ហេតុនេះ ចូរពួកអ្នកសារភាពកំហុសចំពោះម្ចាស់របស់ពួកអ្នក រួចពួកអ្នកត្រូវសម្លាប់ខ្លួនឯង(ដោយសម្លាប់គ្នាទៅវិញទៅមក) ។ ការធ្វើដូច្នេះវាជាការប្រសើរសម្រាប់ពួកអ្នកនៅចំពោះមុខម្ចាស់របស់ពួកអ្នក ។ (បើពួកអ្នកធ្វើបានដូច្នេះ) ទ្រង់ពិតជាអភ័យទោសឱ្យពួកអ្នក ។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកទទួលយកការសារភាពកំហុស ជាអ្នកអាណិតស្រឡាញ់បំផុត ។

وَإِذۡ قُلۡتُمۡ يَٰمُوسَىٰ لَن نُّؤۡمِنَ لَكَ حَتَّىٰ نَرَى ٱللَّهَ جَهۡرَةٗ فَأَخَذَتۡكُمُ ٱلصَّٰعِقَةُ وَأَنتُمۡ تَنظُرُونَ ٥٥

៥៥-ហើយ(ចូរចងចាំ)នៅពេលដែលពួកអ្នកបាននិយាយថាៈ ឱមូសា! ពួកយើងមិនជឿអ្នកទេ លុះត្រាតែពួកយើងបានឃើញអល់ឡោះដោយផ្ទាល់នឹងភ្នែក ។ ពេលនោះរន្ទះបានបាញ់(សម្លាប់)ពួកអ្នកភ្លាម ខណៈដែលពួកអ្នកមើលឃើញផ្ទាល់នឹងភ្នែក ។

ثُمَّ بَعَثۡنَٰكُم مِّنۢ بَعۡدِ مَوۡتِكُمۡ لَعَلَّكُمۡ تَشۡكُرُونَ ٥٦

៥៦-ក្រោយមកយើងបានប្រោសពួកអ្នកឱ្យរស់ឡើងវិញ បន្ទាប់ពីការស្លាប់របស់ពួកអ្នកដើម្បីឱ្យពួកអ្នកដឹងគុណ ។

وَظَلَّلۡنَا عَلَيۡكُمُ ٱلۡغَمَامَ وَأَنزَلۡنَا عَلَيۡكُمُ ٱلۡمَنَّ وَٱلسَّلۡوَىٰۖ كُلُواْ مِن طَيِّبَٰتِ مَا رَزَقۡنَٰكُمۡۖ وَمَا ظَلَمُونَا وَلَٰكِن كَانُوٓاْ أَنفُسَهُمۡ يَظۡلِمُونَ ٥٧

៥៧-ហើយយើងបានធ្វើឱ្យពពកបាំងជាម្លប់លើពួកអ្នក ហើយយើងបានបញ្ចុះម៉ាន់ណា(ជាប្រភេទចំណីដែលមានរសជាតិផ្អែម) និងសត្វក្រួចឱ្យពួកអ្នក ។ ចូរពួកអ្នកបរិភោគចំណីអាហារល្អៗដែលយើងបានប្រទានឱ្យពួកអ្នក ។ ហើយពួកគេមិនបានធ្វើបាបយើងឡើយ ផ្ទុយទៅវិញពួកគេទេដែលបានធ្វើបាបខ្លួនឯងនោះ ។

وَإِذۡ قُلۡنَا ٱدۡخُلُواْ هَٰذِهِ ٱلۡقَرۡيَةَ فَكُلُواْ مِنۡهَا حَيۡثُ شِئۡتُمۡ رَغَدٗا وَٱدۡخُلُواْ ٱلۡبَابَ سُجَّدٗا وَقُولُواْ حِطَّةٞ نَّغۡفِرۡ لَكُمۡ خَطَٰيَٰكُمۡۚ وَسَنَزِيدُ

៥៨-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានមានបន្ទូលថាៈ ចូរពួកអ្នកចូលទីក្រុងនេះ(ក្រុងយេរ៉ូសាឡឹម) ហើយចូរពួកអ្នកបរិភោគនូវអ្វីៗដែលមាននៅទីនេះដោយរីករាយតាមតែពួកអ្នកត្រូវការ ហើយពួកអ្នកត្រូវចូលតាមទ្វារដោយឱនលំទោននិងប្រើ

ٱلْمُحْسِنِينَ ﴿٥٨﴾

ពាក្យសុំទោស យើងនឹងអភ័យទោសឱ្យពួកអ្នកនូវរាល់បាបកម្មរបស់ពួកអ្នក ហើយយើងនឹងបន្ថែម(ផលបុណ្យ)ដល់បណ្តាអ្នកដែលសាងអំពើល្អ។

فَبَدَّلَ ٱلَّذِينَ ظَلَمُوا۟ قَوْلًا غَيْرَ ٱلَّذِى قِيلَ لَهُمْ فَأَنزَلْنَا عَلَى ٱلَّذِينَ ظَلَمُوا۟ رِجْزًا مِّنَ ٱلسَّمَآءِ بِمَا كَانُوا۟ يَفْسُقُونَ ﴿٥٩﴾

៥៩-ប៉ុន្តែពួកដែលបំពានបានផ្លាស់ប្តូរពាក្យដែលអល់ឡោះបានប្រាប់ពួកគេទៅជាពាក្យផ្សេង។ ដូច្នេះ យើងបានបញ្ចុះទណ្ឌកម្មពីលើមេឃទៅលើពួកដែលបំពានដោយសារតែពួកគេមិនគោរពតាមបទបញ្ជា(របស់យើង)។

۞ وَإِذِ ٱسْتَسْقَىٰ مُوسَىٰ لِقَوْمِهِۦ فَقُلْنَا ٱضْرِب بِّعَصَاكَ ٱلْحَجَرَ ۖ فَٱنفَجَرَتْ مِنْهُ ٱثْنَتَا عَشْرَةَ عَيْنًا ۖ قَدْ عَلِمَ كُلُّ أُنَاسٍ مَّشْرَبَهُمْ ۖ كُلُوا۟ وَٱشْرَبُوا۟ مِن رِّزْقِ ٱللَّهِ وَلَا تَعْثَوْا۟ فِى ٱلْأَرْضِ مُفْسِدِينَ ﴿٦٠﴾

៦០-ហើយ(ចូរចងចាំ) នៅពេលដែលមូសាបានសុំឱ្យយើងប្រទានទឹកដល់ក្រុមរបស់គេ ពេលនោះយើងបានបញ្ជាថា: ចូរអ្នកវាយថ្មនឹងដំបងរបស់អ្នកចុះ។ ដូច្នេះ(ពេលដែលមូសាវាយ) ថ្មនោះក៏បានបាញ់ទឹកចេញជាដប់ពីររន្ធ។ មនុស្សគ្រប់រូបសុទ្ធតែបានដឹងពីទឹកន្លែងដែលត្រូវដឹកទឹករបស់ពួកគេ។ ចូរពួកអ្នកបរិភោគ និងទទួលទាននូវលាភសក្ការៈរបស់អល់ឡោះចុះ ហើយកុំបំពាននៅលើផែនដីដោយបង្កវិនាសកម្មឱ្យសោះ។

وَإِذْ قُلْتُمْ يَـٰمُوسَىٰ لَن نَّصْبِرَ عَلَىٰ طَعَامٍ وَٰحِدٍ فَٱدْعُ لَنَا رَبَّكَ يُخْرِجْ لَنَا مِمَّا تُنۢبِتُ ٱلْأَرْضُ مِنۢ بَقْلِهَا وَقِثَّآئِهَا وَفُومِهَا وَعَدَسِهَا وَبَصَلِهَا ۖ قَالَ أَتَسْتَبْدِلُونَ ٱلَّذِى هُوَ أَدْنَىٰ بِٱلَّذِى هُوَ خَيْرٌ ۚ ٱهْبِطُوا۟ مِصْرًا فَإِنَّ لَكُم مَّا سَأَلْتُمْ ۗ وَضُرِبَتْ عَلَيْهِمُ ٱلذِّلَّةُ وَٱلْمَسْكَنَةُ وَبَآءُو بِغَضَبٍ مِّنَ ٱللَّهِ ۗ ذَٰلِكَ بِأَنَّهُمْ كَانُوا۟ يَكْفُرُونَ بِـَٔايَـٰتِ ٱللَّهِ وَيَقْتُلُونَ ٱلنَّبِيِّـۧنَ بِغَيْرِ ٱلْحَقِّ ۗ ذَٰلِكَ بِمَا عَصَوا۟ وَّكَانُوا۟ يَعْتَدُونَ ﴿٦١﴾

៦១-ហើយ(ចូរចងចាំ)នៅពេលដែលពួកអ្នកបាននិយាយថា: ឱមូសា! ពួកយើងមិនអាចទ្រាំបានទេចំពោះអាហារដដែល១នេះ។ ហេតុនេះសូមអ្នកសុំពីម្ចាស់របស់អ្នកឱ្យទ្រង់បញ្ចេញឱ្យពួកយើងនូវអ្វីដែលគេបណ្តុះចេញពីដី ដូចជាជីរ ត្រសក់ ខ្ទឹមស សណ្តែក និងខ្ទឹមក្រហមជាដើម។ មូសាបានតបវិញថា: តើពួកអ្នកសុំប្តូររបស់ដែលល្អយករបស់ដែលអន់ឬ? ចូរពួកអ្នកចេញទៅរស់នៅទីក្រុងណាមួយចុះ ពួកអ្នកនឹងទទួលបាននូវអ្វីដែលពួកអ្នកសុំជាមិនខាន។ (ក្រោយពេលដែលពួកគេចេញពីទីនេះ)ពួកគេត្រូវបានទទួលរងនូវភាពអាប់ឱន និងក្រខ្សត់ ហើយពួកគេបានត្រឡប់មកវិញដោយមានការខឹងសម្បាពីអល់ឡោះ។ នោះគឺដោយសារតែពួកគេបានប្រឆាំងនឹងបណ្តាភស្តុតាងរបស់អល់ឡោះ និងសម្លាប់ណាពី[1] ជាច្រើនដោយអយុត្តិធម៌។ ដូច្នេះដែរ ដោយសារតែពួកគេបាន

១-ណាពី : ព្យាការី ។

ប្រព្រឹត្តបទល្មើស ព្រមទាំងបានបំពានលើបទបញ្ជារបស់យើង។

إِنَّ ٱلَّذِينَ ءَامَنُواْ وَٱلَّذِينَ هَادُواْ
وَٱلنَّصَٰرَىٰ وَٱلصَّٰبِـِٔينَ مَنْ ءَامَنَ
بِٱللَّهِ وَٱلْيَوْمِ ٱلْءَاخِرِ وَعَمِلَ صَٰلِحًا فَلَهُمْ
أَجْرُهُمْ عِندَ رَبِّهِمْ وَلَا خَوْفٌ عَلَيْهِمْ
وَلَا هُمْ يَحْزَنُونَ ﴿٦٢﴾

៦២-ពិតប្រាកដណាស់ បណ្ដាអ្នកដែលមានជំនឿ និងពួកយ៉ាហ៊ូទី[១]និងពួកណាសរ៉នី[២] ហើយនិងពួកសពីអ៊ីន[៣] អ្នកណាដែលមានជំនឿលើអល់ឡោះ ហើយនិងថ្ងៃបរលោក ព្រមទាំងបានសាងអំពើល្អ ពួកគេនឹងទទួលបានផលបុណ្យពីម្ចាស់របស់ពួកគេ ហើយចំពោះពួកគេគឺគ្មានការភ័យខ្លាចនិងព្រួយបារម្ភអ្វីឡើយ។

وَإِذْ أَخَذْنَا مِيثَٰقَكُمْ وَرَفَعْنَا فَوْقَكُمُ ٱلطُّورَ
خُذُواْ مَآ ءَاتَيْنَٰكُم بِقُوَّةٍ وَٱذْكُرُواْ مَا فِيهِ
لَعَلَّكُمْ تَتَّقُونَ ﴿٦٣﴾

៦៣-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានដាក់កិច្ចសន្យាលើពួកអ្នក ហើយយើងបានលើកភ្នំតួរឡើងពីលើពួកអ្នក(អល់ឡោះបានបញ្ជាថា) ចូរពួកអ្នកទទួលយកឱ្យប្រាកដប្រជានូវអ្វីដែលយើងបានផ្ដល់ឱ្យពួកអ្នក(គម្ពីរតាវ៉រត) ហើយពួកអ្នកត្រូវចងចាំនូវអ្វីដែលមាននៅក្នុងគម្ពីរនេះ ដើម្បីឱ្យពួកអ្នកកោតខ្លាចអល់ឡោះ។

ثُمَّ تَوَلَّيْتُم مِّنۢ بَعْدِ ذَٰلِكَ فَلَوْلَا فَضْلُ
ٱللَّهِ عَلَيْكُمْ وَرَحْمَتُهُۥ لَكُنتُم
مِّنَ ٱلْخَٰسِرِينَ ﴿٦٤﴾

៦៤-តែក្រោយមកពួកអ្នកបានបែរចេញពីកិច្ចសន្យានោះ។ ហើយប្រសិនបើគ្មានការប្រោសប្រទាន និងក្ដីមេត្ដាករុណាពីអល់ឡោះចំពោះពួកអ្នកទេនោះ ពួកអ្នកប្រាកដជានឹងស្ថិតនៅក្នុងចំណោមពួកដែលខាតបង់ជាមិនខាន។

وَلَقَدْ عَلِمْتُمُ ٱلَّذِينَ ٱعْتَدَوْاْ مِنكُمْ فِى ٱلسَّبْتِ
فَقُلْنَا لَهُمْ كُونُواْ قِرَدَةً خَٰسِـِٔينَ ﴿٦٥﴾

៦៥-ហើយជាការពិតណាស់ ពួកអ្នកបានដឹងថា ពួកដែលបានបំពាននៅថ្ងៃសៅរ៍[៤] ក្នុងចំណោមពួកអ្នក ពេលនោះយើងបានមានបន្ទូលទៅកាន់ពួកគេថា: ចូរពួកអ្នកក្លាយជាសត្វស្វាដ៏ថោកទាបចុះ។

فَجَعَلْنَٰهَا نَكَٰلًا لِّمَا بَيْنَ يَدَيْهَا وَمَا خَلْفَهَا
وَمَوْعِظَةً لِّلْمُتَّقِينَ ﴿٦٦﴾

៦៦-ដូច្នេះ យើងបានបង្កើតទណ្ឌកម្មនេះធ្វើជាគំរូព្រមានដល់អ្នកជំនាន់នោះ និងអ្នកជំនាន់ក្រោយ ហើយជាមេរៀនមួយសម្រាប់បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ។

---

១-យ៉ាហ៊ូទី : អ្នកដែលកាន់សាសនាជ្វីហ្វ ។
២-ណាសរ៉នី : អ្នកដែលកាន់សាសនាគ្រឹស្ត ។
៣-សពីអ៊ីន : ពួកដែលគោរពធម្មជាតិ ឬគ្មានសាសនាពិតប្រាកដ។
៤-អំបូរអ៊ីស្រាអែលបានបំពានលើវិន័យរបស់អល់ឡោះ ខណៈដែលទ្រង់បានហាមឃាត់ពួកគេអំពីការចេញទៅនេសាទត្រីដោយបោះបង់ការជួបជុំគ្នានៅក្នុងថ្ងៃសៅរ៍ ដើម្បីប្រតិបត្តិតាមអល់ឡោះ។

وَإِذۡ قَالَ مُوسَىٰ لِقَوۡمِهِۦٓ إِنَّ ٱللَّهَ يَأۡمُرُكُمۡ أَن تَذۡبَحُواْ بَقَرَةٗۖ قَالُوٓاْ أَتَتَّخِذُنَا هُزُوٗاۖ قَالَ أَعُوذُ بِٱللَّهِ أَنۡ أَكُونَ مِنَ ٱلۡجَٰهِلِينَ ﴿٦٧﴾

៦៧-ហើយ(ចូរចងចាំ)នៅពេលដែលមូសាបានពោលទៅកាន់ក្រុមរបស់គាត់ថា: ពិតប្រាកដណាស់ អល់ឡោះបញ្ជាពួកអ្នកឱ្យសំឡេះមេគោមួយក្បាល។ ពួកគេបានតបវិញថា: តើអ្នកយកពួកយើងធ្វើជាការលេងសើចឬ? មូសាបានឆ្លើយថា: ខ្ញុំសុំពីអល់ឡោះបញ្ចៀសខ្ញុំកុំឱ្យស្ថិតនៅក្នុងចំណោមពួកដែលល្ងង់ខ្លៅ។

قَالُواْ ٱدۡعُ لَنَا رَبَّكَ يُبَيِّن لَّنَا مَا هِيَۚ قَالَ إِنَّهُۥ يَقُولُ إِنَّهَا بَقَرَةٞ لَّا فَارِضٞ وَلَا بِكۡرٌ عَوَانُۢ بَيۡنَ ذَٰلِكَۖ فَٱفۡعَلُواْ مَا تُؤۡمَرُونَ ﴿٦٨﴾

៦៨-ពួកគេបាននិយាយថា: សូមអ្នកសុំពីម្ចាស់របស់អ្នកឱ្យទ្រង់បញ្ជាក់ប្រាប់ពួកយើងផងថា: តើមេគោនោះមានលក្ខណៈយ៉ាងដូចម្ដេច? មូសាបានឆ្លើយថា: ទ្រង់បានមានបន្ទូលយ៉ាងច្បាស់ថា: មេគោនោះមិនចាស់ពេក ហើយក៏មិនក្មេងពេកដែរ ពោលគឺស្ថិតនៅក្នុងវ័យកណ្ដាល។ ដូច្នេះ ចូរពួកអ្នកធ្វើតាមអ្វីដែលត្រូវគេបញ្ជាចុះ។

قَالُواْ ٱدۡعُ لَنَا رَبَّكَ يُبَيِّن لَّنَا مَا لَوۡنُهَاۚ قَالَ إِنَّهُۥ يَقُولُ إِنَّهَا بَقَرَةٞ صَفۡرَآءُ فَاقِعٞ لَّوۡنُهَا تَسُرُّ ٱلنَّٰظِرِينَ ﴿٦٩﴾

៦៩-ពួកគេបានបន្តថា: សូមអ្នកសុំពីម្ចាស់របស់អ្នកឱ្យបញ្ជាក់ប្រាប់ពួកយើងផងថា: តើមេគោនោះមានសម្បុរអ្វី? មូសាបានឆ្លើយថា: ទ្រង់បានមានបន្ទូលយ៉ាងច្បាស់ថា: មេគោនោះសម្បុរលឿង ពណ៌របស់វាភ្លឺថ្លាធ្វើឱ្យអ្នកដែលមើលឃើញពេញចិត្ត។

قَالُواْ ٱدۡعُ لَنَا رَبَّكَ يُبَيِّن لَّنَا مَا هِيَ إِنَّ ٱلۡبَقَرَ تَشَٰبَهَ عَلَيۡنَا وَإِنَّآ إِن شَآءَ ٱللَّهُ لَمُهۡتَدُونَ ﴿٧٠﴾

៧០-ពួកគេបានបន្តទៀតថា: សូមអ្នកសុំពីម្ចាស់របស់អ្នកឱ្យទ្រង់បញ្ជាក់ប្រាប់ពួកយើងបន្ថែមទៀតអំពីលក្ខណៈសម្បត្តិរបស់មេគោនោះ ព្រោះមេគោនោះធ្វើឱ្យពួកយើងមិនច្បាស់។ ហើយពិតប្រាកដណាស់ បើអល់ឡោះមានចេតនា គឺពួកយើងនឹងទទួលបានការចង្អុលបង្ហាញ។

قَالَ إِنَّهُۥ يَقُولُ إِنَّهَا بَقَرَةٞ لَّا ذَلُولٞ تُثِيرُ ٱلۡأَرۡضَ وَلَا تَسۡقِي ٱلۡحَرۡثَ مُسَلَّمَةٞ لَّا شِيَةَ فِيهَاۚ قَالُواْ ٱلۡـَٰٔنَ جِئۡتَ بِٱلۡحَقِّۚ فَذَبَحُوهَا وَمَا كَادُواْ يَفۡعَلُونَ ﴿٧١﴾

៧១-មូសាបានឆ្លើយតបថា: អល់ឡោះបានមានបន្ទូលយ៉ាងច្បាស់ថា: ការពិតមេគោនោះគេមិនដែលយកទៅប្រើប្រាស់ភ្ជួររាស់ដីធ្លី និងដឹកទឹកស្រោចស្រពដំណាំទេ ពោលគឺមានលក្ខណៈពេញលេញ ហើយក៏គ្មានពណ៌ចំរុះដែរ។ ពួកគេបាននិយាយបន្តថា: ឥឡូវនេះអ្នកបានផ្ដល់ការពិតហើយ។ ដូច្នេះ ពួកគេក៏សំឡេះមេគោនោះ ដែលពួកគេស្ទើរតែមិនអាចធ្វើបាន។

وَإِذۡ قَتَلۡتُمۡ نَفۡسٗا فَٱدَّٰرَٰٔتُمۡ فِيهَاۖ وَٱللَّهُ مُخۡرِجٞ مَّا كُنتُمۡ تَكۡتُمُونَ ﴿٧٢﴾

៧២-ហើយ(ចូរចងចាំ)នៅពេលដែលពួកអ្នកបានសម្លាប់មនុស្សម្នាក់ រួចពួកអ្នកបានឈ្លោះទាស់ទែងគ្នាក្នុងរឿងឃាតកម្មនោះ តែអល់ឡោះជាអ្នកលាតត្រដាងនូវអ្វីដែលពួកអ្នកបាន

លាក់បាំង។

៧៣-ដូច្នេះយើងបានបញ្ជាថា: ចូរពួកអ្នកយកផ្នែកណាមួយនៃមេគោនេះវាយទៅលើសាកសពនោះ[១] ។ ដូចនេះដែរ អល់ឡោះនឹងធ្វើឱ្យអ្នកស្លាប់ទាំងអស់រស់ឡើងវិញ(នៅថ្ងៃបរលោក) ហើយអល់ឡោះបង្ហាញភស្តុតាងៗរបស់ទ្រង់ដល់ពួកអ្នក ដើម្បីឱ្យពួកអ្នកចេះគិតពិចារណា។

៧៤-បន្ទាប់ពីព្រឹត្តិការណ៍នោះ ចិត្តរបស់ពួកអ្នកនៅតែរឹងរូសដដែល វាហាក់ដូចជាដុំថ្មឬរឹងជាងដុំថ្មទៅទៀត។ ពិតប្រាកដណាស់ ផ្ទាំងថ្មខ្លះផុសទឹកចេញក្លាយជាទន្លេជាច្រើន។ ហើយពិតប្រាកដណាស់ ផ្ទាំងថ្មខ្លះទៀតប្រេះបែកធ្វើឱ្យទឹកហូរចេញក្រៅ។ ហើយពិតប្រាកដណាស់ ផ្ទាំងថ្មខ្លះទៀតធ្លាក់ពីលើភ្នំមកដោយសារតែការកោតខ្លាចអល់ឡោះ។ ហើយអល់ឡោះមិនព្រងើយកន្តើយនូវអ្វីដែលពួកអ្នកកំពុងប្រព្រឹត្តនោះឡើយ។

៧៥-តើពួកអ្នក(មានជំនឿ)នៅតែទទូចចង់ឱ្យពួកនោះ(អំបូរអ៊ីស្រាអែល)ជឿតាមពួកអ្នកទៀតឬ? ខណៈដែលពួកគេមួយចំនួន (ក្រុមអ្នកចេះដឹង)បានស្តាប់ពួបន្ទូលរបស់អល់ឡោះ រួចមកពួកគេកែប្រែវាបន្ទាប់ពីពួកគេបានយល់និងដឹងច្បាស់ហើយនោះ។

៧៦-ហើយនៅពេលដែលពួកគេ(ពួកពុតត្បុតនៃពួកយ៉ាហ៊ូទី) បានជួបបណ្តាអ្នកមានជំនឿ ពួកគេបាននិយាយថា: ពួកយើងក៏បានជឿដូចពួកអ្នកដែរ។ តែនៅពេលដែលពួកគេនៅជាមួយគ្នាគេវិញ ពួកគេបាននិយាយថា: តើពួកអ្នកនិយាយប្រាប់ពួកនោះនូវអ្វី[២]ដែលអល់ឡោះបានប្រាប់ពួកអ្នកដើម្បីឱ្យពួកគេធ្វើជាភស្តុតាងមកប្រឆាំងនឹងពួកអ្នកវិញនៅចំពោះមុខម្ចាស់របស់ពួកអ្នកឬ? តើពួកអ្នកមិនពិចារណាទេឬ?

فَقُلْنَا ٱضْرِبُوهُ بِبَعْضِهَا ۚ كَذَٰلِكَ يُحْيِ
ٱللَّهُ ٱلْمَوْتَىٰ وَيُرِيكُمْ ءَايَٰتِهِۦ لَعَلَّكُمْ
تَعْقِلُونَ ﴿٧٣﴾

ثُمَّ قَسَتْ قُلُوبُكُم مِّنۢ بَعْدِ ذَٰلِكَ فَهِىَ
كَٱلْحِجَارَةِ أَوْ أَشَدُّ قَسْوَةً ۚ وَإِنَّ مِنَ ٱلْحِجَارَةِ
لَمَا يَتَفَجَّرُ مِنْهُ ٱلْأَنْهَٰرُ ۚ وَإِنَّ مِنْهَا لَمَا يَشَّقَّقُ
فَيَخْرُجُ مِنْهُ ٱلْمَآءُ ۚ وَإِنَّ مِنْهَا لَمَا يَهْبِطُ
مِنْ خَشْيَةِ ٱللَّهِ ۗ وَمَا ٱللَّهُ بِغَٰفِلٍ عَمَّا
تَعْمَلُونَ ﴿٧٤﴾

۞ أَفَتَطْمَعُونَ أَن يُؤْمِنُوا۟ لَكُمْ وَقَدْ كَانَ فَرِيقٌ
مِّنْهُمْ يَسْمَعُونَ كَلَٰمَ ٱللَّهِ ثُمَّ يُحَرِّفُونَهُۥ مِنۢ
بَعْدِ مَا عَقَلُوهُ وَهُمْ يَعْلَمُونَ ﴿٧٥﴾

وَإِذَا لَقُوا۟ ٱلَّذِينَ ءَامَنُوا۟ قَالُوٓا۟ ءَامَنَّا وَإِذَا
خَلَا بَعْضُهُمْ إِلَىٰ بَعْضٍ قَالُوٓا۟ أَتُحَدِّثُونَهُم
بِمَا فَتَحَ ٱللَّهُ عَلَيْكُمْ لِيُحَآجُّوكُم بِهِۦ عِندَ
رَبِّكُمْ ۚ أَفَلَا تَعْقِلُونَ ﴿٧٦﴾

១-ពេលនោះសាកសពរស់ឡើងវិញ ហើយបានប្រាប់ពីឃាតករពិត។
២-ភាពជាអ្នកនាំសាររបស់ណាពីមូហាំម៉ាត់ដែលបានចែងនៅក្នុងគម្ពីរតាវរ៉ត។

៧៧-តើពួកគេមិនដឹងទេឬថា អល់ឡោះពិតជាដឹងនូវអ្វីៗ ដែលពួកគេលាក់កំបាំងនិងអ្វីៗដែលពួកគេលាតត្រដាង?

أَوَلَا يَعۡلَمُونَ أَنَّ ٱللَّهَ يَعۡلَمُ مَا يُسِرُّونَ وَمَا
يُعۡلِنُونَ ﴿٧٧﴾

៧៨-ហើយមានអ្នកខ្លះក្នុងចំណោមពួកគេ(យ៉ាហ៊ូទី)ជាពួក មិនចេះអក្សរ មិនចេះគម្ពីរ(តាវ៉រ៉ត) តែពួកគេជឿតាមការភូត កុហក ហើយពួកគេគ្រាន់តែស្មានប៉ុណ្ណោះ។

وَمِنۡهُمۡ أُمِّيُّونَ لَا يَعۡلَمُونَ ٱلۡكِتَٰبَ
إِلَّآ أَمَانِيَّ وَإِنۡ هُمۡ إِلَّا يَظُنُّونَ ﴿٧٨﴾

៧៩-ដូច្នេះភាពវិនាសអន្តរាយគឺសម្រាប់ពួកដែលសរសេរគម្ពីរ (តាវ៉រ៉ត)ដោយដៃពួកគេផ្ទាល់ រួចនិយាយថា: គម្ពីរនេះមកពី អល់ឡោះដើម្បីប្តូរយកកម្រៃបន្តិចបន្តួចនឹងវា។ ហើយភាពវិនាស អន្តរាយកើតមានចំពោះពួកគេដោយសារតែអ្វីដែលពួកគេបាន សរសេរដោយផ្ទាល់ដៃ។ ហើយការវិនាសកើតមានចំពោះពួកគេ ក៏ដោយសារតែកម្រៃដែលពួកគេទទួលបានដែរ។

فَوَيۡلٞ لِّلَّذِينَ يَكۡتُبُونَ ٱلۡكِتَٰبَ بِأَيۡدِيهِمۡ ثُمَّ
يَقُولُونَ هَٰذَا مِنۡ عِندِ ٱللَّهِ لِيَشۡتَرُواْ بِهِۦ ثَمَنٗا
قَلِيلٗاۖ فَوَيۡلٞ لَّهُم مِّمَّا كَتَبَتۡ أَيۡدِيهِمۡ
وَوَيۡلٞ لَّهُم مِّمَّا يَكۡسِبُونَ ﴿٧٩﴾

៨០-ហើយពួកគេ(អំបូរអ៊ីស្រាអែល)បាននិយាយថា: ភ្លើង នរកនឹងមិនប៉ះពាល់ពួកយើងទេ លើកលែងតែប៉ុន្មានថ្ងៃប៉ុណ្ណោះ។ ចូរអ្នក(មូហាំមាត់)សួរពួកគេថា: តើពួកអ្នកបានទទួលការសន្យា នេះពីអល់ឡោះឬ? ព្រោះអល់ឡោះនឹងមិនធ្វើខុសការសន្យារបស់ ទ្រង់ជាដាច់ខាត ឬក៏ពួកអ្នកចេះតែនិយាយ(ប្រឌិតភូតកុហក) ចំពោះអល់ឡោះនូវអ្វីដែលពួកអ្នកមិនដឹង?

وَقَالُواْ لَن تَمَسَّنَا ٱلنَّارُ إِلَّآ أَيَّامٗا مَّعۡدُودَةٗۚ
قُلۡ أَتَّخَذۡتُمۡ عِندَ ٱللَّهِ عَهۡدٗا فَلَن يُخۡلِفَ ٱللَّهُ
عَهۡدَهُۥٓۖ أَمۡ تَقُولُونَ عَلَى ٱللَّهِ مَا لَا
تَعۡلَمُونَ ﴿٨٠﴾

៨១-ការពិតមិនមែនដូច្នោះទេ អ្នកណាហើយដែលបានធ្វើ អំពើអាក្រក់ ហើយបាបកម្មរបស់គេបានហ៊ុមព័ទ្ធជុំវិញខ្លួនគេនោះ ពួកទាំងនោះគឺជាពួកនរកដែលពួកគេស្ថិតនៅក្នុងនោះជាអមតៈ។

بَلَىٰۚ مَن كَسَبَ سَيِّئَةٗ وَأَحَٰطَتۡ بِهِۦ خَطِيٓـَٔتُهُۥ
فَأُوْلَٰٓئِكَ أَصۡحَٰبُ ٱلنَّارِۖ هُمۡ فِيهَا
خَٰلِدُونَ ﴿٨١﴾

៨២-រីឯបណ្តាអ្នកដែលមានជំនឿ ហើយបានសាងអំពើល្អ អ្នក ទាំងនោះគឺជាអ្នកឋានសួគ៌ដែលពួកគេស្ថិតនៅក្នុងនោះជាអមតៈ។

وَٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ
أُوْلَٰٓئِكَ أَصۡحَٰبُ ٱلۡجَنَّةِۖ هُمۡ فِيهَا
خَٰلِدُونَ ﴿٨٢﴾

៨៣-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានដាក់កិច្ចសន្យា លើអំបូរអ៊ីស្រាអែលថា: ពួកអ្នកមិនត្រូវគោរពសក្ការៈចំពោះអ្នក ណាក្រៅពីអល់ឡោះឡើយ ហើយត្រូវធ្វើល្អចំពោះមាតាបិតា និង

وَإِذۡ أَخَذۡنَا مِيثَٰقَ بَنِيٓ إِسۡرَٰٓءِيلَ لَا تَعۡبُدُونَ
إِلَّا ٱللَّهَ وَبِٱلۡوَٰلِدَيۡنِ إِحۡسَانٗا وَذِي ٱلۡقُرۡبَىٰ

ញាតិសន្តាន និងក្មេងកំព្រា និងអ្នកក្រីក្រ និងត្រូវនិយាយស្តីល្អជាមួយមនុស្សលោក និងត្រូវប្រតិបត្តិសឡាត ហើយនិងត្រូវបរិច្ចាគហ្សាកាត់ ។ បន្ទាប់មក ពួកអ្នកបានបែរចេញ( ពីកិច្ចសន្យា) លើកលែងតែមួយចំនួនតូចក្នុងចំណោមពួកអ្នកប៉ុណ្ណោះ ខណៈដែលពួកអ្នកជាអ្នកបែរចេញ ។

៨៤-ហើយ( ចូរចងចាំ) នៅពេលដែលយើងបានដាក់កិច្ចសន្យាលើពួកអ្នកថាៈ ពួកអ្នកមិនត្រូវបង្ហូរឈាមគ្នា និងមិនត្រូវបណ្តេញគ្នាឯងចេញពីលំនៅដ្ឋានរបស់ពួកអ្នកឡើយ ។ បន្ទាប់មកពួកអ្នកបានទទួលស្គាល់( កិច្ចសន្យា) ដោយពួកអ្នកធ្វើជាសាក្សី ។

៨៥-បន្ទាប់មកពួកអ្នកទាំងអស់គ្នាបែរជាកាប់សម្លាប់គ្នាឯងទៅវិញ ហើយពួកអ្នកបណ្តេញក្រុមមួយក្នុងចំណោមពួកអ្នកចេញពីលំនៅដ្ឋានរបស់ពួកគេ និងជួយ( សត្រូវ) ប្រឆាំងនឹងពួកគេដោយប្រព្រឹត្តបាបកម្មនិងរំលោភបំពាន ។ ប្រសិនបើពួកគេមកជួបពួកអ្នកក្នុងនាមជាឈ្លើយសឹក ពួកអ្នកនឹងលោះពួកគេ ទោះបីការបណ្តេញពួកគេត្រូវបានហាមឃាត់ចំពោះពួកអ្នកក៏ដោយ ។ តើពួកអ្នកជឿផ្នែកខ្លះនៃគម្ពីរ( តាវ៉រ៉ត) និងបដិសេធផ្នែកខ្លះទៀតឬ? ដូច្នេះ គ្មានអ្វីដែលជាសំណងសម្រាប់អ្នកដែលប្រព្រឹត្តដូចនោះក្នុងចំណោមពួកអ្នកក្រៅពីភាពអាម៉ាស់ក្នុងការរស់នៅលើលោកិយនេះឡើយ ហើយនៅថ្ងៃបរលោកវិញ អ្នកនោះនឹងត្រូវអល់ឡោះបញ្ជូនទៅកាន់ទារុណកម្មយ៉ាងធ្ងន់ធ្ងរបំផុត ។ ហើយអល់ឡោះមិនព្រងើយកន្តើយអំពីអ្វីដែលពួកអ្នកកំពុងប្រព្រឹត្តនោះឡើយ ។

៨៦-អ្នកទាំងនោះគឺជាពួកដែលបានប្តូរយកការរស់នៅលើលោកិយនឹងការរស់នៅនាថ្ងៃបរលោក ។ ដូច្នេះ ពួកទាំងនោះមិនត្រូវគេបន្ធូរបន្ថយទារុណកម្មឡើយ ហើយពួកគេក៏មិនត្រូវបានគេជួយដែរ ។

៨៧-ហើយជាការពិតណាស់ យើងបានផ្តល់ឱ្យមូសានូវគម្ពីរ( តាវ៉រ៉ត) ហើយយើងបានបញ្ជូនបណ្តាអ្នកនាំសារជាហូរហែបន្ទាប់

وَٱلۡيَتَٰمَىٰ وَٱلۡمَسَٰكِينِ وَقُولُواْ لِلنَّاسِ حُسۡنٗا
وَأَقِيمُواْ ٱلصَّلَوٰةَ وَءَاتُواْ ٱلزَّكَوٰةَ ثُمَّ تَوَلَّيۡتُمۡ
إِلَّا قَلِيلٗا مِّنكُمۡ وَأَنتُم مُّعۡرِضُونَ ﴿٨٣﴾

وَإِذۡ أَخَذۡنَا مِيثَٰقَكُمۡ لَا تَسۡفِكُونَ دِمَآءَكُمۡ
وَلَا تُخۡرِجُونَ أَنفُسَكُم مِّن دِيَٰرِكُمۡ ثُمَّ أَقۡرَرۡتُمۡ
وَأَنتُمۡ تَشۡهَدُونَ ﴿٨٤﴾

ثُمَّ أَنتُمۡ هَٰٓؤُلَآءِ تَقۡتُلُونَ أَنفُسَكُمۡ
وَتُخۡرِجُونَ فَرِيقٗا مِّنكُم مِّن دِيَٰرِهِمۡ تَظَٰهَرُونَ
عَلَيۡهِم بِٱلۡإِثۡمِ وَٱلۡعُدۡوَٰنِ وَإِن يَأۡتُوكُمۡ أُسَٰرَىٰ
تُفَٰدُوهُمۡ وَهُوَ مُحَرَّمٌ عَلَيۡكُمۡ إِخۡرَاجُهُمۡۚ
أَفَتُؤۡمِنُونَ بِبَعۡضِ ٱلۡكِتَٰبِ وَتَكۡفُرُونَ
بِبَعۡضٖۚ فَمَا جَزَآءُ مَن يَفۡعَلُ ذَٰلِكَ
مِنكُمۡ إِلَّا خِزۡيٞ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَاۖ وَيَوۡمَ
ٱلۡقِيَٰمَةِ يُرَدُّونَ إِلَىٰٓ أَشَدِّ ٱلۡعَذَابِۗ وَمَا ٱللَّهُ
بِغَٰفِلٍ عَمَّا تَعۡمَلُونَ ﴿٨٥﴾

أُوْلَٰٓئِكَ ٱلَّذِينَ ٱشۡتَرَوُاْ ٱلۡحَيَوٰةَ ٱلدُّنۡيَا
بِٱلۡأٓخِرَةِۖ فَلَا يُخَفَّفُ عَنۡهُمُ ٱلۡعَذَابُ
وَلَا هُمۡ يُنصَرُونَ ﴿٨٦﴾

وَلَقَدۡ ءَاتَيۡنَا مُوسَى ٱلۡكِتَٰبَ وَقَفَّيۡنَا مِنۢ

بَعۡدِهِۦ بِٱلرُّسُلِۖ وَءَاتَيۡنَا عِيسَى ٱبۡنَ مَرۡيَمَ
ٱلۡبَيِّنَٰتِ وَأَيَّدۡنَٰهُ بِرُوحِ ٱلۡقُدُسِۗ أَفَكُلَّمَا
جَآءَكُمۡ رَسُولُۢ بِمَا لَا تَهۡوَىٰٓ أَنفُسُكُمُ
ٱسۡتَكۡبَرۡتُمۡ فَفَرِيقٗا كَذَّبۡتُمۡ وَفَرِيقٗا
تَقۡتُلُونَ ﴿٨٧﴾

ពីគាត់ ។ ហើយយើងបានផ្តល់ឱ្យអ៊ីសាកូនម៉ារយ៉ាំនូវមុជីហ្សាត់[១] យ៉ាងច្បាស់លាស់ ហើយយើងបានពង្រឹងរូបគាត់តាមរយៈជីព្រីល[២] ។ តើគ្រប់ពេលដែលអ្នកនាំសារបាននាំមកឱ្យពួកអ្នកនូវអ្វីដែលមិនស្របតាមបំណងរបស់ពួកអ្នក ពួកអ្នកបែរជាក្រអឺតក្រទមឬ? ហើយអ្នកខ្លះ( អ្នកនាំសារ) ពួកអ្នកបានបដិសេធ និងខ្លះទៀតពួកអ្នកបានសម្លាប់ ។

وَقَالُواْ قُلُوبُنَا غُلۡفُۢۚ بَل لَّعَنَهُمُ ٱللَّهُ بِكُفۡرِهِمۡ
فَقَلِيلٗا مَّا يُؤۡمِنُونَ ﴿٨٨﴾

៨៨-ហើយពួកគេបាននិយាយថាៈ ចិត្តរបស់ពួកយើងត្រូវបានបិទជិត ។ ផ្ទុយទៅវិញ អល់ឡោះទេដែលបានដាក់បណ្តាសាពួកគេ ដោយសារតែការប្រឆាំងរបស់ពួកគេនោះ ហើយអ្វីដែលពួកគេជឿ គឺតិចតួចបំផុត ។

وَلَمَّا جَآءَهُمۡ كِتَٰبٞ مِّنۡ عِندِ ٱللَّهِ مُصَدِّقٞ
لِّمَا مَعَهُمۡ وَكَانُواْ مِن قَبۡلُ يَسۡتَفۡتِحُونَ
عَلَى ٱلَّذِينَ كَفَرُواْ فَلَمَّا جَآءَهُم مَّا
عَرَفُواْ كَفَرُواْ بِهِۦۚ فَلَعۡنَةُ ٱللَّهِ عَلَى
ٱلۡكَٰفِرِينَ ﴿٨٩﴾

៨៩-ហើយនៅពេលដែលគម្ពីរមួយពីអល់ឡោះ( គម្ពីរគួរអាន) បានមកដល់ពួកគេដែលជាការបញ្ជាក់នូវអ្វីដែលមាននៅជាមួយពួកគេ( គម្ពីរតាវ៉រ៉ត និងគម្ពីរអ៊ីញជីល) ទោះបីកាលពីមុនពួកគេបានបួងសួងសុំពីអល់ឡោះ( ឱ្យបញ្ជូនមូហាំម៉ាត់មក) ឱ្យឈ្នះលើពួកដែលបានប្រឆាំង ហើយនៅពេលដែលអ្នកនាំសារ( មូហាំម៉ាត់) បានមកដល់ដូចដែលពួកគេធ្លាប់បានដឹង ពួកគេបែរជាប្រឆាំងចំពោះគាត់ទៅវិញ ។ ដូច្នេះ បណ្តាសារបស់អល់ឡោះគឺសម្រាប់ពួកដែលប្រឆាំង ។

بِئۡسَمَا ٱشۡتَرَوۡاْ بِهِۦٓ أَنفُسَهُمۡ أَن يَكۡفُرُواْ
بِمَآ أَنزَلَ ٱللَّهُ بَغۡيًا أَن يُنَزِّلَ ٱللَّهُ مِن
فَضۡلِهِۦ عَلَىٰ مَن يَشَآءُ مِنۡ عِبَادِهِۦۖ فَبَآءُو
بِغَضَبٍ عَلَىٰ غَضَبٖۚ وَلِلۡكَٰفِرِينَ عَذَابٞ
مُّهِينٞ ﴿٩٠﴾

៩០-តើអាក្រក់ប៉ុណ្ណាទៅដែលពួកគេបានលក់ខ្លួនរបស់ពួកគេ ដោយពួកគេប្រឆាំងនឹងអ្វីដែលអល់ឡោះបានបញ្ចុះ( គម្ពីរគួរអាន) ដោយសារតែការច្រណែននឹងការបញ្ចុះរបស់អល់ឡោះនូវការប្រោសប្រទានរបស់ទ្រង់ចំពោះអ្នកណាដែលទ្រង់មានចេតនាក្នុងចំណោមខ្ញុំរបស់ទ្រង់ ។ ហើយពួកគេបានទទួលនូវការខឹងសម្បាម្តងហើយម្តងទៀត( ពីអល់ឡោះ) ។ ហើយសម្រាប់ពួកដែលប្រឆាំងគឺទារុណកម្មយ៉ាងអាម៉ាស់បំផុត ។

១-មុជីហ្សាត់ : បាដិហារិយ៍ ។

២-ជីព្រីល : ជាឈ្មោះម៉ាឡាអ៊ីកាត់មួយរូបដែលជាអ្នកនាំសារពីអល់ឡោះមកឱ្យណាពី ។

وَإِذَا قِيلَ لَهُمۡ ءَامِنُواْ بِمَآ أَنزَلَ ٱللَّهُ قَالُواْ
نُؤۡمِنُ بِمَآ أُنزِلَ عَلَيۡنَا وَيَكۡفُرُونَ بِمَا
وَرَآءَهُۥ وَهُوَ ٱلۡحَقُّ مُصَدِّقٗا لِّمَا مَعَهُمۡۗ قُلۡ
فَلِمَ تَقۡتُلُونَ أَنۢبِيَآءَ ٱللَّهِ مِن قَبۡلُ
إِن كُنتُم مُّؤۡمِنِينَ ٩١

៩១-ហើយនៅពេលដែលគេបាននិយាយទៅកាន់ពួកគេ(យ៉ាហ៊ូទី)ថា: ចូរពួកអ្នកជឿនូវអ្វីដែលអល់ឡោះបានបញ្ចុះមក(គម្ពីរគួរអាន)។ ពួកគេបានឆ្លើយថា: ពួកយើងជឿតែអ្វីដែលគេបានបញ្ចុះមកឱ្យពួកយើងប៉ុណ្ណោះ(គម្ពីរតាវរ៉ត)។ ហើយពួកគេមិនជឿនូវអ្វីដែលក្រោយពីវាឡើយ ទោះបីគម្ពីរគួរអានជាការពិតដើម្បីបញ្ជាក់នូវអ្វីដែលមាននៅជាមួយពួកគេក៏ដោយ។ ចូរអ្នក(មូហាំម៉ាត់)សួរពួកគេថា: ហេតុអ្វីបានជាពួកអ្នកសម្លាប់បណ្ដាណាពីរបស់អល់ឡោះពីមុនៗប្រសិនបើពួកអ្នកជាអ្នកមានជំនឿមែននោះ?

وَلَقَدۡ جَآءَكُم مُّوسَىٰ بِٱلۡبَيِّنَٰتِ ثُمَّ ٱتَّخَذۡتُمُ
ٱلۡعِجۡلَ مِنۢ بَعۡدِهِۦ وَأَنتُمۡ ظَٰلِمُونَ ٩٢

៩២-ហើយជាការពិតណាស់ មូសាបាននាំមកឱ្យពួកអ្នកនូវភស្តុតាងច្បាស់លាស់ជាច្រើន។ ក្រោយមកនៅពេលដែលមូសាមិននៅ ពួកអ្នកបានយករូបសំណាកកូនគោមកគោរពសក្ការៈ ហើយពួកអ្នកគឺជាពួកដែលបំពាន។

وَإِذۡ أَخَذۡنَا مِيثَٰقَكُمۡ وَرَفَعۡنَا فَوۡقَكُمُ ٱلطُّورَ
خُذُواْ مَآ ءَاتَيۡنَٰكُم بِقُوَّةٖ وَٱسۡمَعُواْۖ قَالُواْ
سَمِعۡنَا وَعَصَيۡنَا وَأُشۡرِبُواْ فِي قُلُوبِهِمُ ٱلۡعِجۡلَ
بِكُفۡرِهِمۡۚ قُلۡ بِئۡسَمَا يَأۡمُرُكُم بِهِۦٓ
إِيمَٰنُكُمۡ إِن كُنتُم مُّؤۡمِنِينَ ٩٣

៩៣-ហើយ(ចូរចងចាំ) នៅពេលដែលយើងបានដាក់កិច្ចសន្យាលើពួកអ្នក ហើយយើងបានលើកភ្នំតួរពីលើពួកអ្នក (ដោយបញ្ជាថា) ចូរពួកអ្នកទទួលយកឱ្យប្រាកដប្រជានូវអ្វីដែលយើងបានផ្ដល់ឱ្យពួកអ្នក(គម្ពីរតាវរ៉ត) ហើយចូរពួកអ្នកស្ដាប់។ ពួកគេបានឆ្លើយថា: ពួកយើងបានស្ដាប់ឮ តែពួកយើងមិនបានប្រតិបត្តិតាមទេ។ ហើយចិត្តរបស់ពួកគេបានដក់ជាប់នឹងរូបសំណាកកូនគោ ដោយសារតែការគ្មានជំនឿរបស់ពួកគេ។ ចូរអ្នក(មូហាំម៉ាត់)ពោលថា: អាក្រក់បំផុតដែលជំនឿរបស់ពួកអ្នកបង្គាប់ឱ្យពួកអ្នកធ្វើដូចនេះ។ ប្រសិនបើពួកអ្នកជាអ្នកមានជំនឿ(នឹងគម្ពីរតាវរ៉ត)មែននោះ (ហេតុអ្វីបានជាពួកអ្នកធ្វើដូច្នោះ?)។

قُلۡ إِن كَانَتۡ لَكُمُ ٱلدَّارُ ٱلۡأٓخِرَةُ عِندَ ٱللَّهِ
خَالِصَةٗ مِّن دُونِ ٱلنَّاسِ فَتَمَنَّوُاْ ٱلۡمَوۡتَ إِن
كُنتُمۡ صَٰدِقِينَ ٩٤

៩៤-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ប្រសិនបើលំនៅដ្ឋាននាថ្ងៃបរលោក(ឋានសួគ៌)របស់អល់ឡោះ សម្រាប់តែពួកអ្នកមិនមែនសម្រាប់អ្នកដទៃទេនោះ ដូច្នេះចូរពួកអ្នកទទូចចង់ស្លាប់ចុះ ប្រសិនបើការអះអាងរបស់ពួកអ្នកត្រឹមត្រូវមែននោះ។

وَلَن يَتَمَنَّوۡهُ أَبَدَۢا بِمَا قَدَّمَتۡ أَيۡدِيهِمۡۗ وَٱللَّهُ
عَلِيمُۢ بِٱلظَّٰلِمِينَ ٩٥

៩៥-ហើយពួកគេនឹងមិនទទូចចង់ស្លាប់ជាដាច់ខាតដោយសារតែដៃរបស់ពួកគេបានប្រព្រឹត្តនូវទោសកំហុសកន្លងមក។ ហើយ

អល់ឡោះដឹងបំផុតចំពោះពួកដែលបំពាន។

وَلَتَجِدَنَّهُمۡ أَحۡرَصَ ٱلنَّاسِ عَلَىٰ حَيَوٰةٖ وَمِنَ ٱلَّذِينَ أَشۡرَكُواْۚ يَوَدُّ أَحَدُهُمۡ لَوۡ يُعَمَّرُ أَلۡفَ سَنَةٖ وَمَا هُوَ بِمُزَحۡزِحِهِۦ مِنَ ٱلۡعَذَابِ أَن يُعَمَّرَۗ وَٱللَّهُ بَصِيرُۢ بِمَا يَعۡمَلُونَ ٩٦

៩៦-ហើយពិតប្រាកដណាស់ អ្នក(មូហាំម៉ាត់)នឹងជួបប្រទះពួកគេ(យ៉ាហ៊ូទី)ជាមនុស្សដែលលោភលន់បំផុតក្នុងការរស់នៅ និងជាមនុស្សលោភលន់ជាងពួកដែលធ្វើស្ហ៊ីរិកទៅទៀត។ ពួកគេម្នាក់ៗប្រាថ្នាចង់បានអាយុរបស់គេរហូតដល់មួយពាន់ឆ្នាំ។ ទោះបីជាអាយុរបស់គេវែងយ៉ាងនេះក៏ដោយ ក៏មិនអាចធ្វើឱ្យគេគេចផុតពីទារុណកម្មរបស់អល់ឡោះបានដែរ។ ហើយអល់ឡោះឃើញបំផុតនូវអ្វីដែលពួកគេប្រព្រឹត្ត។

قُلۡ مَن كَانَ عَدُوّٗا لِّجِبۡرِيلَ فَإِنَّهُۥ نَزَّلَهُۥ عَلَىٰ قَلۡبِكَ بِإِذۡنِ ٱللَّهِ مُصَدِّقٗا لِّمَا بَيۡنَ يَدَيۡهِ وَهُدٗى وَبُشۡرَىٰ لِلۡمُؤۡمِنِينَ ٩٧

៩៧-ចូរអ្នក(មូហាំម៉ាត់)ពោលថា: អ្នកណាដែលបានចាត់ទុកជីព្រីលជាសត្រូវ តាមពិតជីព្រីលគ្រាន់តែជាអ្នកនាំគម្ពីរគួរអានចុះមកក្នុងចិត្តរបស់អ្នកតាមបទបញ្ជារបស់អល់ឡោះតែប៉ុណ្ណោះ ដើម្បីបញ្ជាក់នូវអ្វីដែលមានពីមុនមក(ដូចជា គម្ពីរតាវ៉រ៉ត គម្ពីរអ៊ីញជីល...) និងដើម្បីចង្អុលបង្ហាញ ព្រមទាំងផ្តល់ដំណឹងរីករាយសម្រាប់បណ្តាអ្នកដែលមានជំនឿ។

مَن كَانَ عَدُوّٗا لِّلَّهِ وَمَلَٰٓئِكَتِهِۦ وَرُسُلِهِۦ وَجِبۡرِيلَ وَمِيكَىٰلَ فَإِنَّ ٱللَّهَ عَدُوّٞ لِّلۡكَٰفِرِينَ ٩٨

៩៨-អ្នកណាដែលចាត់ទុកអល់ឡោះ និងបណ្តាម៉ាឡាអ៊ីកាត់របស់ទ្រង់ និងបណ្តាអ្នកនាំសាររបស់ទ្រង់ និងជីព្រីល និងមីកាអ៊ីល[1] ជាសត្រូវនោះ ពិតប្រាកដណាស់ អល់ឡោះគឺជាសត្រូវនឹងពួកដែលប្រឆាំង។

وَلَقَدۡ أَنزَلۡنَآ إِلَيۡكَ ءَايَٰتِۭ بَيِّنَٰتٖۖ وَمَا يَكۡفُرُ بِهَآ إِلَّا ٱلۡفَٰسِقُونَ ٩٩

៩៩-ហើយពិតប្រាកដណាស់ យើងបានបញ្ចុះឱ្យអ្នក(មូហាំម៉ាត់)នូវភស្តុតាងដ៏ច្បាស់លាស់ជាច្រើន។ ហើយគ្មានអ្នកដែលបដិសេធនឹងភស្តុតាងទាំងនេះទេ លើកលែងតែពួកដែលប្រឆាំងនឹងបទបញ្ជារបស់អល់ឡោះប៉ុណ្ណោះ។

أَوَكُلَّمَا عَٰهَدُواْ عَهۡدٗا نَّبَذَهُۥ فَرِيقٞ مِّنۡهُمۚ بَلۡ أَكۡثَرُهُمۡ لَا يُؤۡمِنُونَ ١٠٠

១០០-តើមូលហេតុអ្វីបានជាគ្រប់ពេលដែលពួកគេបានធ្វើកិច្ចសន្យា បែរជាមានក្រុមមួយក្នុងចំណោមពួកគេបានបោះបង់វាចោលទៅវិញ? ផ្ទុយទៅវិញពួកគេភាគច្រើនមិនជឿឡើយ។

وَلَمَّا جَآءَهُمۡ رَسُولٞ مِّنۡ عِندِ ٱللَّهِ مُصَدِّقٞ

១០១-ហើយនៅពេលដែលអ្នកនាំសារ(មូហាំម៉ាត់)មកពី

---

១-មីកាអ៊ីល : ជាឈ្មោះម៉ាឡាអ៊ីកាត់មួយរូប ដែលជាអ្នកនាំលាភសក្ការៈរបស់អល់ឡោះមកឱ្យមនុស្សលោក។

لِّمَا مَعَهُمۡ نَبَذَ فَرِيقٞ مِّنَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ كِتَٰبَ ٱللَّهِ وَرَآءَ ظُهُورِهِمۡ كَأَنَّهُمۡ لَا يَعۡلَمُونَ ﴿١٠١﴾

អល់ឡោះបានមកដល់ពួកគេ ដែលជាការបញ្ជាក់នូវអ្វីដែលមាននៅជាមួយពួកគេ(គម្ពីរតាវរ៉ត) ក្រុមមួយក្នុងចំណោមពួកដែលត្រូវបានគេផ្ដល់គម្ពីរឱ្យបានយកគម្ពីររបស់អល់ឡោះបោះចោលខាងក្រោយខ្នងរបស់ពួកគេហាក់ដូចជាពួកគេមិនដឹង។

وَٱتَّبَعُواْ مَا تَتۡلُواْ ٱلشَّيَٰطِينُ عَلَىٰ مُلۡكِ سُلَيۡمَٰنَۖ وَمَا كَفَرَ سُلَيۡمَٰنُ وَلَٰكِنَّ ٱلشَّيَٰطِينَ كَفَرُواْ يُعَلِّمُونَ ٱلنَّاسَ ٱلسِّحۡرَ وَمَآ أُنزِلَ عَلَى ٱلۡمَلَكَيۡنِ بِبَابِلَ هَٰرُوتَ وَمَٰرُوتَۚ وَمَا يُعَلِّمَانِ مِنۡ أَحَدٍ حَتَّىٰ يَقُولَآ إِنَّمَا نَحۡنُ فِتۡنَةٞ فَلَا تَكۡفُرۡۖ فَيَتَعَلَّمُونَ مِنۡهُمَا مَا يُفَرِّقُونَ بِهِۦ بَيۡنَ ٱلۡمَرۡءِ وَزَوۡجِهِۦۚ وَمَا هُم بِضَآرِّينَ بِهِۦ مِنۡ أَحَدٍ إِلَّا بِإِذۡنِ ٱللَّهِۚ وَيَتَعَلَّمُونَ مَا يَضُرُّهُمۡ وَلَا يَنفَعُهُمۡۚ وَلَقَدۡ عَلِمُواْ لَمَنِ ٱشۡتَرَىٰهُ مَا لَهُۥ فِي ٱلۡأٓخِرَةِ مِنۡ خَلَٰقٖۚ وَلَبِئۡسَ مَا شَرَوۡاْ بِهِۦٓ أَنفُسَهُمۡۚ لَوۡ كَانُواْ يَعۡلَمُونَ ﴿١٠٢﴾

១០២-ហើយពួកគេបានធ្វើតាមនូវអ្វីដែលពួកស្ហៃតនបានសូត្រមន្តអាគមនៅក្នុងរជ្ជកាលស៊ូឡៃម៉ាន។ ហើយស៊ូឡៃម៉ានមិនប្រឆាំង(ចំពោះអល់ឡោះ)ទេ ក៏ប៉ុន្ដែពួកស្ហៃតនទេដែលបានប្រឆាំងនោះ។ ពួកគេបង្រៀនមន្តអាគមដល់មនុស្ស និងអ្វីដែលគេបានបញ្ចុះនៅស្រុកហ្ពាពីលចំពោះម៉ាឡាអ៊ីកាត់ទាំងពីរ គឺហារូត និងម៉ារូត ប៉ុន្ដែពួកគេទាំងពីរមិនបង្រៀននរណាម្នាក់ទេ ទាល់តែពួកគេទាំងពីរប្រាប់ថា: ពួកយើងគ្រាន់តែនាំមកនូវការសាកល្បងពីអល់ឡោះតែប៉ុណ្ណោះ។ ដូច្នេះ ចូរអ្នកកុំបដិសេធ(នឹងម៉ាឡាអ៊ីកាត់ទាំងពីររូបដោយជឿលើមន្តអាគម) តែពួកគេក៏រៀនពីពួកម៉ាឡាអ៊ីកាត់ទាំងពីរនូវអ្វីដែលធ្វើឱ្យបែកបាក់រវាងប្ដីប្រពន្ធអ្នកដទៃ។ ហើយពួកគេមិនអាចបង្កគ្រោះថ្នាក់ដល់នរណាម្នាក់បានឡើយ លុះត្រាតែមានការអនុញ្ញាតពីអល់ឡោះប៉ុណ្ណោះ។ ហើយពួកគេរៀននូវអ្វីដែលបង្កគ្រោះថ្នាក់ និងគ្មានផលប្រយោជន៍ដល់ពួកគេ។ ហើយជាការពិតណាស់ ពួកគេបានដឹងថា អ្នកណាបានជ្រើសរើសយកមន្តអាគមនឹងគ្មានផលល្អទេនៅថ្ងៃបរលោក។ វាជាអំពើមួយដ៏អាក្រក់បំផុតដែលពួកគេប្ដូរខ្លួនរបស់ពួកគេទៅនឹងមន្តអាគមនោះ ប្រសិនបើពួកគេបានដឹង(ពីលទ្ធផលចុងក្រោយ)។

وَلَوۡ أَنَّهُمۡ ءَامَنُواْ وَٱتَّقَوۡاْ لَمَثُوبَةٞ مِّنۡ عِندِ ٱللَّهِ خَيۡرٞۖ لَّوۡ كَانُواْ يَعۡلَمُونَ ﴿١٠٣﴾

១០៣-ហើយប្រសិនបើពួកគេបានជឿ និងកោតខ្លាចអល់ឡោះ ពួកគេប្រាកដជានឹងបានទទួលការតបស្នងពីអល់ឡោះដ៏ល្អប្រសើរ បើសិនជាពួកគេបានដឹង។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَقُولُواْ رَٰعِنَا

១០៤-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំប្រើពាក្យ "រ៉អ៊ីណា[១]"(ទៅកាន់មូហាំម៉ាត់)។ តែពួកអ្នកត្រូវប្រើពាក្យ

១-"រ៉អ៊ីណា" និង"អ៊ុនហ្ស៊ូរណា"មានន័យដូចគ្នាគឺ:"សូមអ្នកថែរក្សាពួកយើង"។ តែដោយសារពួកយ៉ាហ៊ូទីប្រើពាក្យ"រ៉អ៊ីណា"នេះសម្រាប់ការជេរប្រមាថ ទើបអល់ឡោះហាមឃាត់អ្នកមានជំនឿមិនឱ្យប្រើពាក្យនេះ ដោយប្រើពាក្យ"អ៊ុនហ្ស៊ូរណា"ជំនួសវិញ។

"អ៊ុនហ្ឋុរណា" ហើយពួកអ្នកត្រូវស្តាប់តាមចុះ ។ ហើយពួកដែលប្រឆាំងនឹងទទួលទារុណកម្មយ៉ាងឈឺចាប់ ។

១០៥-ពួកដែលគ្មានជំនឿនៃអះលីគីតាប[១] និងពួកមូស្ហ៊ីគីន[២] មិនពេញចិត្តឱ្យម្ចាស់របស់ពួកអ្នកបញ្ចុះប្រការល្អណាមួយដល់ពួកអ្នកឡើយ ។ ហើយអល់ឡោះមានសិទ្ធិកំណត់ក្ដីមេត្តាករុណារបស់ទ្រង់ទៅលើបុគ្គលណាម្នាក់ដែលទ្រង់មានចេតនា ។ ហើយអល់ឡោះមានការប្រោសប្រទានដ៏ធំធេង ។

១០៦-អាយ៉ាត់ណាក៏ដោយដែលយើងបានផ្លាស់ប្ដូរ ឬធ្វើឱ្យអ្នក(មូហាំម៉ាត់)ភ្លេចវានោះ គឺយើងបាននាំមកនូវអ្វីដែលល្អជាងនេះ ឬប្រហែលគ្នានឹងវា ។ តើអ្នកមិនដឹងទេឬថា អល់ឡោះពិតជាមានអានុភាពលើអ្វីៗទាំងអស់?

១០៧-តើអ្នកមិនដឹងទេឬថា ពិតប្រាកដណាស់អល់ឡោះមានអំណាចគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដីនោះ? ហើយពួកអ្នកគ្មានអ្នកគាំពារ និងអ្នកជួយក្រៅពីអល់ឡោះឡើយ ។

១០៨-ឬមួយពួកអ្នកមានបំណងចង់សួរអ្នកនាំសារ(មូហាំម៉ាត់)របស់ពួកអ្នកដូចអ្វីដែលគេបានសួរមូសាពីមុនមកឬ? ហើយអ្នកណាយកជំនឿមកប្ដូរយកការគ្មានជំនឿ អ្នកនោះពិតជាវង្វេងចេញពីមាគ៌ាដ៏ត្រឹមត្រូវជាមិនខាន ។

១០៩-ភាគច្រើននៃពួកអះលីគីតាបមានបំណងធ្វើឱ្យពួកអ្នកវិលត្រឡប់ទៅរកការគ្មានជំនឿដូចដើមវិញ បន្ទាប់ពីពួកអ្នកមានជំនឿរួច ដោយការច្រណែនឈ្នានីសនៅក្នុងខ្លួនរបស់ពួកគេក្រោយពីការពិតត្រូវបានបង្ហាញយ៉ាងច្បាស់លាស់ដល់ពួកគេ ។ ដូចនេះ ចូរពួកអ្នកអភ័យទោស និងអធ្យាស្រ័យរហូតដល់អល់ឡោះនាំមកនូវបទបញ្ជារបស់ទ្រង់ ។ ពិតប្រាកដណាស់ អល់ឡោះមានអានុភាព

وَقُولُواْ ٱنظُرۡنَا وَٱسۡمَعُواْۗ وَلِلۡكَٰفِرِينَ عَذَابٌ أَلِيمٞ ﴿١٠٤﴾

مَّا يَوَدُّ ٱلَّذِينَ كَفَرُواْ مِنۡ أَهۡلِ ٱلۡكِتَٰبِ وَلَا ٱلۡمُشۡرِكِينَ أَن يُنَزَّلَ عَلَيۡكُم مِّنۡ خَيۡرٖ مِّن رَّبِّكُمۡۚ وَٱللَّهُ يَخۡتَصُّ بِرَحۡمَتِهِۦ مَن يَشَآءُۚ وَٱللَّهُ ذُو ٱلۡفَضۡلِ ٱلۡعَظِيمِ ﴿١٠٥﴾

مَا نَنسَخۡ مِنۡ ءَايَةٍ أَوۡ نُنسِهَا نَأۡتِ بِخَيۡرٖ مِّنۡهَآ أَوۡ مِثۡلِهَآۗ أَلَمۡ تَعۡلَمۡ أَنَّ ٱللَّهَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٌ ﴿١٠٦﴾

أَلَمۡ تَعۡلَمۡ أَنَّ ٱللَّهَ لَهُۥ مُلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۗ وَمَا لَكُم مِّن دُونِ ٱللَّهِ مِن وَلِيّٖ وَلَا نَصِيرٍ ﴿١٠٧﴾

أَمۡ تُرِيدُونَ أَن تَسۡـَٔلُواْ رَسُولَكُمۡ كَمَا سُئِلَ مُوسَىٰ مِن قَبۡلُۗ وَمَن يَتَبَدَّلِ ٱلۡكُفۡرَ بِٱلۡإِيمَٰنِ فَقَدۡ ضَلَّ سَوَآءَ ٱلسَّبِيلِ ﴿١٠٨﴾

وَدَّ كَثِيرٞ مِّنۡ أَهۡلِ ٱلۡكِتَٰبِ لَوۡ يَرُدُّونَكُم مِّنۢ بَعۡدِ إِيمَٰنِكُمۡ كُفَّارًا حَسَدٗا مِّنۡ عِندِ أَنفُسِهِم مِّنۢ بَعۡدِ مَا تَبَيَّنَ لَهُمُ ٱلۡحَقُّۖ فَٱعۡفُواْ وَٱصۡفَحُواْ حَتَّىٰ يَأۡتِيَ ٱللَّهُ بِأَمۡرِهِۦٓۗ إِنَّ ٱللَّهَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ﴿١٠٩﴾

---

១-អះលីគីតាប : អ្នកដែលអល់ឡោះផ្ដល់គម្ពីរឱ្យ (យ៉ាហ៊ូទី និងណាសរ៉នី) ។

២-មូស្ហ៊ីគីន : អ្នកដែលគោរពសក្ការៈព្រះនានារួមជាមួយអល់ឡោះ ។

وَأَقِيمُواْ ٱلصَّلَوٰةَ وَءَاتُواْ ٱلزَّكَوٰةَۚ وَمَا تُقَدِّمُواْ لِأَنفُسِكُم مِّنۡ خَيۡرٖ تَجِدُوهُ عِندَ ٱللَّهِۗ إِنَّ ٱللَّهَ بِمَا تَعۡمَلُونَ بَصِيرٞ ﴿١١٠﴾

លើអ្វីៗទាំងអស់។

១១០-ហើយចូរពួកអ្នកប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់។ ហើយប្រការល្អទាំងឡាយដែលពួកអ្នកបានសាងសម្រាប់ខ្លួនពួកអ្នកនោះ ពួកអ្នកពិតជានឹងទទួលបានផលបុណ្យពីអល់ឡោះជាមិនខាន។ ពិតប្រាកដណាស់ អល់ឡោះឃើញបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

وَقَالُواْ لَن يَدۡخُلَ ٱلۡجَنَّةَ إِلَّا مَن كَانَ هُودًا أَوۡ نَصَٰرَىٰۗ تِلۡكَ أَمَانِيُّهُمۡۗ قُلۡ هَاتُواْ بُرۡهَٰنَكُمۡ إِن كُنتُمۡ صَٰدِقِينَ ﴿١١١﴾

១១១-ហើយពួកគេ(យ៉ាហ៊ូទីនិងណាសរ៉នី) បាននិយាយថា: គ្មាននរណាម្នាក់ចូលឋានសួគ៌ឡើយ លើកលែងតែអ្នកនោះកាន់សាសនាយ៉ាហ៊ូទីឬណាសរ៉នីប៉ុណ្ណោះ។ នោះគ្រាន់តែជាការស្រមើស្រមៃប្រាថ្នារបស់ពួកគេប៉ុណ្ណោះ។ ចូរអ្នក(មូហាំម៉ាត់) តបវិញថា: សូមបង្ហាញភស្តុតាងរបស់ពួកអ្នកមក ប្រសិនបើការអះអាងរបស់ពួកអ្នកត្រឹមត្រូវមែននោះ។

بَلَىٰۚ مَنۡ أَسۡلَمَ وَجۡهَهُۥ لِلَّهِ وَهُوَ مُحۡسِنٞ فَلَهُۥٓ أَجۡرُهُۥ عِندَ رَبِّهِۦ وَلَا خَوۡفٌ عَلَيۡهِمۡ وَلَا هُمۡ يَحۡزَنُونَ ﴿١١٢﴾

១១២-ការពិតមិនមែនដូច្នោះទេ (អ្នកដែលបានចូលឋានសួគ៌នោះ) គឺអ្នកដែលបានប្រគល់ខ្លួនប្រាណរបស់គេចំពោះអល់ឡោះដោយភាពស្មោះត្រង់ ។ ដូច្នេះ សម្រាប់អ្នកនោះនឹងទទួលបានផលបុណ្យពីម្ចាស់របស់គេ ហើយពួកគេគ្មានការភ័យខ្លាច និងព្រួយបារម្ភអ្វីឡើយ។

وَقَالَتِ ٱلۡيَهُودُ لَيۡسَتِ ٱلنَّصَٰرَىٰ عَلَىٰ شَيۡءٖ وَقَالَتِ ٱلنَّصَٰرَىٰ لَيۡسَتِ ٱلۡيَهُودُ عَلَىٰ شَيۡءٖ وَهُمۡ يَتۡلُونَ ٱلۡكِتَٰبَۗ كَذَٰلِكَ قَالَ ٱلَّذِينَ لَا يَعۡلَمُونَ مِثۡلَ قَوۡلِهِمۡۚ فَٱللَّهُ يَحۡكُمُ بَيۡنَهُمۡ يَوۡمَ ٱلۡقِيَٰمَةِ فِيمَا كَانُواْ فِيهِ يَخۡتَلِفُونَ ﴿١١٣﴾

១១៣-ពួកយ៉ាហ៊ូទីបានអះអាងថា: សាសនារបស់ពួកណាសរ៉នីពុំត្រឹមត្រូវឡើយ ហើយពួកណាសរ៉នីក៏បានតបវិញថា: សាសនារបស់ពួកយ៉ាហ៊ូទីទេដែលពុំត្រឹមត្រូវនោះ ខណៈដែលពួកគេ(ទាំងពីរក្រុម)សូត្រគម្ពីររៀងៗខ្លួន។ ដូចគ្នានេះដែរ ពួកដែលពុំបានយល់ដឹង (មូស្ហរីគីនអារ៉ាប់) បានអះអាងដូចពាក្យសំដីរបស់ពួកទាំងនោះដែរ[1] ។ ហើយអល់ឡោះនឹងកាត់ក្តីរវាងពួកគេទាំងនោះនៅថ្ងៃបរលោកអំពីអ្វីដែលពួកគេបានខ្វែងគំនិតគ្នានៅក្នុង(រឿង)នោះ។

១-ពួកអារ៉ាប់មូស្ហរីគីនបានចោទប្រកាន់ថា សាសនាអ៊ីស្លាមពុំមានលក្ខណៈត្រឹមត្រូវឡើយ។

១១៤-ហើយតើអ្នកណាដែលបំពានជាងអ្នកដែលរារាំងអ្នកដទៃមិនឱ្យចូលម៉ាស្ជិទ[១] របស់អល់ឡោះ ដើម្បីរំលឹកនាមរបស់ទ្រង់ (សូត្រធម៌ ថ្វាយបង្គំ បួងសួង) នៅក្នុងវា ថែមទាំងបានព្យាយាមក្នុងការបំផ្លិចបំផ្លាញវាទៀតនោះ? អ្នកទាំងនោះមិនស័ក្តិសមឱ្យចូលក្នុងម៉ាស្ជិទឡើយ លើកលែងតែពួកគេមានការភ័យខ្លាច(ពីប្រការណាមួយ)ប៉ុណ្ណោះ។ សម្រាប់ពួកគេនៅក្នុងលោកិយនេះគឺមានភាពអាម៉ាស់ ហើយនៅថ្ងៃបរលោកវិញ ពួកគេនឹងទទួលទារុណកម្មយ៉ាងធ្ងន់ធ្ងរ។

وَمَنۡ أَظۡلَمُ مِمَّن مَّنَعَ مَسَٰجِدَ ٱللَّهِ أَن يُذۡكَرَ فِيهَا ٱسۡمُهُۥ وَسَعَىٰ فِي خَرَابِهَآۚ أُوْلَٰٓئِكَ مَا كَانَ لَهُمۡ أَن يَدۡخُلُوهَآ إِلَّا خَآئِفِينَۚ لَهُمۡ فِي ٱلدُّنۡيَا خِزۡيٞ وَلَهُمۡ فِي ٱلۡأٓخِرَةِ عَذَابٌ عَظِيمٞ ١١٤

១១៥-ហើយទិសខាងកើត និងទិសខាងលិចជាកម្មសិទ្ធិរបស់អល់ឡោះ ទោះបីពួកអ្នកបែរតម្រង់មុខទៅរកទិសណាក៏ដោយ ទីនោះហើយមុខរបស់អល់ឡោះ។ ពិតប្រាកដណាស់ អល់ឡោះមានភាពទូលំទូលាយ ដឹងជាទីបំផុត។

وَلِلَّهِ ٱلۡمَشۡرِقُ وَٱلۡمَغۡرِبُۚ فَأَيۡنَمَا تُوَلُّواْ فَثَمَّ وَجۡهُ ٱللَّهِۚ إِنَّ ٱللَّهَ وَٰسِعٌ عَلِيمٞ ١١٥

១១៦-ហើយពួកគេ(យ៉ាហ៊ូទី ណាសរ៉នី និងពួកមូស្ហ្ីរីគីន)បាននិយាយថា: អល់ឡោះមានបុត្រ។ ទ្រង់មហាស្អាតស្អំ! ផ្ទុយទៅវិញ អ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់។ អ្វីៗទាំងអស់នេះគឺគោរពប្រតិបត្តិចំពោះទ្រង់។

وَقَالُواْ ٱتَّخَذَ ٱللَّهُ وَلَدٗاۗ سُبۡحَٰنَهُۥۖ بَل لَّهُۥ مَا فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ كُلّٞ لَّهُۥ قَٰنِتُونَ ١١٦

១១៧-អល់ឡោះជាអ្នកបង្កើតមេឃជាច្រើនជាន់ និងផែនដី។ ហើយនៅពេលដែលទ្រង់សម្រេច(បង្កើត)អ្វីមួយ ទ្រង់គ្រាន់តែបន្ទូលទៅកាន់វាថា: ចូរកើតចុះ វាក៏កើតឡើងភ្លាម។

بَدِيعُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ وَإِذَا قَضَىٰٓ أَمۡرٗا فَإِنَّمَا يَقُولُ لَهُۥ كُن فَيَكُونُ ١١٧

១១៨-ហើយពួកដែលគ្មានចំណេះវិជ្ជាបាននិយាយថា: ហេតុអ្វីបានជាអល់ឡោះមិនបន្ទូលប្រាប់ពួកយើង(ដោយផ្ទាល់) ឬក៏ផ្តល់ភស្តុតាងមកឱ្យពួកយើង? ដូច្នេះដែរ អ្នកជំនាន់មុនៗក៏បាននិយាយដូចពាក្យសំដីរបស់ពួកគេនេះដែរ ដោយសារតែចិត្តរបស់ពួកគេប្រហាក់ប្រហែលគ្នា។ ការពិតយើងបានបង្ហាញភស្តុតាងជាច្រើនដល់ក្រុមដែលមានជំនឿពិតប្រាកដ។

وَقَالَ ٱلَّذِينَ لَا يَعۡلَمُونَ لَوۡلَا يُكَلِّمُنَا ٱللَّهُ أَوۡ تَأۡتِينَآ ءَايَةٞۗ كَذَٰلِكَ قَالَ ٱلَّذِينَ مِن قَبۡلِهِم مِّثۡلَ قَوۡلِهِمۡۘ تَشَٰبَهَتۡ قُلُوبُهُمۡۗ قَدۡ بَيَّنَّا ٱلۡأٓيَٰتِ لِقَوۡمٖ يُوقِنُونَ ١١٨

១១៩-ពិតប្រាកដណាស់ យើងបានបញ្ជូនអ្នក(មូហាំម៉ាត់)

إِنَّآ أَرۡسَلۡنَٰكَ بِٱلۡحَقِّ بَشِيرٗا وَنَذِيرٗاۖ وَلَا تُسۡـَٔلُ

១-ម៉ាស្ជិទ : វិហាររបស់សាសនិកអ៊ីស្លាម ។

عَنْ أَصْحَٰبِ ٱلْجَحِيمِ ١١٩

ជាមួយនឹងការពិត(សាសនាអ៊ីស្លាម) ដើម្បីផ្ដល់ដំណឹងរីករាយ និងដាស់តឿនព្រមាន។ ហើយអ្នកនឹងមិនត្រូវគេឱ្យទទួលខុសត្រូវពីពួកនរកជើហ៊ីមឡើយ។

وَلَن تَرْضَىٰ عَنكَ ٱلْيَهُودُ وَلَا ٱلنَّصَٰرَىٰ حَتَّىٰ
تَتَّبِعَ مِلَّتَهُمْ ۗ قُلْ إِنَّ هُدَى ٱللَّهِ هُوَ ٱلْهُدَىٰ ۗ
وَلَئِنِ ٱتَّبَعْتَ أَهْوَآءَهُم بَعْدَ ٱلَّذِى جَآءَكَ مِنَ
ٱلْعِلْمِ ۙ مَا لَكَ مِنَ ٱللَّهِ مِن وَلِىٍّ وَلَا نَصِيرٍ ١٢٠

១២០-ហើយពួកយ៉ាហ៊ូទីនិងណាសរ៉នីមិនពេញចិត្តនឹងអ្នក(មូហាំម៉ាត់)ជាដាច់ខាត លុះត្រាតែអ្នកកាន់តាមសាសនារបស់ពួកគេ។ ចូរអ្នកប្រាប់ពួកគេថា: ពិតប្រាកដណាស់ ការចង្អុលបង្ហាញរបស់អល់ឡោះ គឺជាការចង្អុលបង្ហាញដ៏ត្រឹមត្រូវ។ ហើយប្រសិនបើអ្នកតាមចំណង់របស់ពួកគេបន្ទាប់ពីអ្នកបានទទួលចំណេះដឹងហើយ(គម្ពីរគួរអាន) អ្នកពិតជាគ្មានអ្នកគាំពារ និងអ្នកជួយពី(ទារុណកម្ម)អល់ឡោះឡើយ។

ٱلَّذِينَ ءَاتَيْنَٰهُمُ ٱلْكِتَٰبَ يَتْلُونَهُۥ حَقَّ
تِلَاوَتِهِۦٓ أُو۟لَٰٓئِكَ يُؤْمِنُونَ بِهِۦ ۗ وَمَن يَكْفُرْ
بِهِۦ فَأُو۟لَٰٓئِكَ هُمُ ٱلْخَٰسِرُونَ ١٢١

១២១-ពួក(កាន់សាសនាអ៊ីស្លាមពីអំបូរអ៊ីស្រាអែល) ដែលយើងបានផ្ដល់គម្ពីរ(តាវ រ៉ត)ឱ្យពួកគេ គឺពួកគេសូត្រវាយ៉ាងត្រឹមត្រូវ។ ពួកទាំងនោះគឺជាអ្នកមានជំនឿលើគម្ពីរ(គួរអាន)។ ហើយអ្នកណាដែលមិនជឿលើវា ពួកទាំងនោះគឺជាពួកដែលខាតបង់។

يَٰبَنِىٓ إِسْرَٰٓءِيلَ ٱذْكُرُوا۟ نِعْمَتِىَ ٱلَّتِىٓ أَنْعَمْتُ
عَلَيْكُمْ وَأَنِّى فَضَّلْتُكُمْ عَلَى ٱلْعَٰلَمِينَ ١٢٢

១២២-ឱអំបូរអ៊ីស្រាអែល! ចូរចងចាំនូវនៀកម៉ាត់របស់យើងដែលយើងបានផ្ដល់ឱ្យពួកអ្នក ហើយពិតប្រាកដណាស់ យើងបានលើកតម្កើងពួកអ្នកជាងគេលើលោកិយនេះ(នៅសម័យនោះ)។

وَٱتَّقُوا۟ يَوْمًا لَّا تَجْزِى نَفْسٌ عَن نَّفْسٍ شَيْـًٔا
وَلَا يُقْبَلُ مِنْهَا عَدْلٌ وَلَا تَنفَعُهَا شَفَٰعَةٌ وَلَا
هُمْ يُنصَرُونَ ١٢٣

១២៣-ហើយចូរពួកអ្នកខ្លាចថ្ងៃមួយ(ថ្ងៃបរលោក)ដែលម្នាក់ៗមិនអាចជួយអ្វីគ្នាបាន ហើយគេមិនទទួលយកការលោះពីនរណាម្នាក់ទេ ហើយការអន្តរាគមន៍គ្មានផលប្រយោជន៍អ្វីចំពោះវាឡើយ ហើយពួកនោះក៏មិនត្រូវបានគេជួយដែរ។

۞ وَإِذِ ٱبْتَلَىٰٓ إِبْرَٰهِـۧمَ رَبُّهُۥ بِكَلِمَٰتٍ فَأَتَمَّهُنَّ ۖ
قَالَ إِنِّى جَاعِلُكَ لِلنَّاسِ إِمَامًا ۖ قَالَ وَمِن
ذُرِّيَّتِى ۖ قَالَ لَا يَنَالُ عَهْدِى ٱلظَّٰلِمِينَ ١٢٤

១២៤-ហើយ(ចូរចងចាំ)នៅពេលដែលម្ចាស់របស់អ៊ីព្រហ៊ីមបានសាកល្បងគាត់តាមរយៈបទបញ្ជាជាច្រើន រួចមកគាត់ក៏បានបំពេញវាយ៉ាងល្អបំផុត។ ទ្រង់ក៏បានមានបន្ទូលថា: ពិតប្រាកដណាស់ យើងចាត់តាំងអ្នកជាមេដឹកនាំសម្រាប់មនុស្សលោក។ អ៊ីព្រហ៊ីមបានពោលថា: ហើយ(សូមទ្រង់ចាត់តាំងជាមេដឹកនាំ)ក្នុងចំណោមកូនចៅរបស់ខ្ញុំផង។ អល់ឡោះបានមានបន្ទូលតបវិញថា: ការសន្យារបស់យើងមិនអាចទៅដល់ពួកដែលបំពានឡើយ។

وَإِذۡ جَعَلۡنَا ٱلۡبَيۡتَ مَثَابَةٗ لِّلنَّاسِ وَأَمۡنٗا وَٱتَّخِذُواْ مِن مَّقَامِ إِبۡرَٰهِـۧمَ مُصَلّٗىۖ وَعَهِدۡنَآ إِلَىٰٓ إِبۡرَٰهِـۧمَ وَإِسۡمَٰعِيلَ أَن طَهِّرَا بَيۡتِيَ لِلطَّآئِفِينَ وَٱلۡعَٰكِفِينَ وَٱلرُّكَّعِ ٱلسُّجُودِ ١٢٥

១២៥-ហើយ(ចូរចងចាំ) នៅពេលដែលយើងបានបង្កើតកាក់ហ្ពះ[1] ជាទីកន្លែងជួបជុំសម្រាប់មនុស្សលោក និងជាកន្លែងមានសុវត្ថិភាព ។ ហើយចូរពួកអ្នកយកម៉ាកមអ៊ីព្រហ៊ីម[2] ជាកន្លែងសឡាត ហើយយើងបានបញ្ជាចំពោះអ៊ីព្រហ៊ីម និងអ៊ីស្មាអ៊ីលថា: ចូរអ្នកទាំងពីរសំអាតកាក់ហ្ពះរបស់យើងសម្រាប់បណ្ដាអ្នកតវ៉ាហ្វ[3] និងបណ្ដាអ្នកអៀកទីកាហ្វ[4] និងបណ្ដាអ្នករ៉ូកុ ស៊ូជូត ។

وَإِذۡ قَالَ إِبۡرَٰهِـۧمُ رَبِّ ٱجۡعَلۡ هَٰذَا بَلَدًا ءَامِنٗا وَٱرۡزُقۡ أَهۡلَهُۥ مِنَ ٱلثَّمَرَٰتِ مَنۡ ءَامَنَ مِنۡهُم بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِۖ قَالَ وَمَن كَفَرَ فَأُمَتِّعُهُۥ قَلِيلٗا ثُمَّ أَضۡطَرُّهُۥٓ إِلَىٰ عَذَابِ ٱلنَّارِۖ وَبِئۡسَ ٱلۡمَصِيرُ ١٢٦

១២៦-ហើយ(ចូរចងចាំ) នៅពេលដែលអ៊ីព្រហ៊ីមបានបួងសួងសុំថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាធ្វើឱ្យទឹកដីនេះ(ក្រុងម៉ាក្កះ) ជាកន្លែងមួយដែលមានសុវត្ថិភាព ព្រមទាំងផ្ដល់ផលានុផលគ្រប់ប្រភេទដល់ប្រជាជននៅទីនេះដែលមានជំនឿលើអល់ឡោះ និងថ្ងៃបរលោកក្នុងចំណោមពួកគេផងចុះ ។ ទ្រង់បានមានបន្ទូលតបវិញថា: ចំពោះអ្នកដែលគ្មានជំនឿយើងនឹងទុកឱកាសឱ្យគេសប្បាយរីករាយតែមួយរយៈពេលខ្លីប៉ុណ្ណោះ ។ បន្ទាប់មកយើងបង្ខំអ្នកនោះឱ្យទៅកាន់ទារុណកម្មនៃភ្លើងនរក ដែលជាកន្លែងវិលត្រឡប់ដ៏អាក្រក់ជាទីបំផុត ។

وَإِذۡ يَرۡفَعُ إِبۡرَٰهِـۧمُ ٱلۡقَوَاعِدَ مِنَ ٱلۡبَيۡتِ وَإِسۡمَٰعِيلُ رَبَّنَا تَقَبَّلۡ مِنَّآۖ إِنَّكَ أَنتَ ٱلسَّمِيعُ ٱلۡعَلِيمُ ١٢٧

១២៧-ហើយ(ចូរចងចាំ) នៅពេលដែលអ៊ីព្រហ៊ីម និងអ៊ីស្មាអ៊ីលបានតំឡើងគ្រឹះកាក់ហ្ពះ(ដោយបួងសួងសុំថា) ឱម្ចាស់របស់ពួកយើងខ្ញុំ! សូមទ្រង់ទទួលយក(អំពើល្អនិងការបួងសួងសុំ) ពីយើងខ្ញុំផង ។ ពិតប្រាកដណាស់ ទ្រង់មហាឮ មហាដឹង ។

رَبَّنَا وَٱجۡعَلۡنَا مُسۡلِمَيۡنِ لَكَ وَمِن ذُرِّيَّتِنَآ أُمَّةٗ مُّسۡلِمَةٗ لَّكَ وَأَرِنَا مَنَاسِكَنَا وَتُبۡ عَلَيۡنَآۖ إِنَّكَ أَنتَ ٱلتَّوَّابُ ٱلرَّحِيمُ ١٢٨

១២៨-ឱម្ចាស់របស់យើងខ្ញុំ! សូមទ្រង់មេត្តាធ្វើឱ្យយើងទាំងពីរនាក់ជាអ្នកប្រគល់ខ្លួន(ជាមូស្លីម) សម្រាប់ទ្រង់ និងធ្វើឱ្យកូនចៅរបស់យើងខ្ញុំជាក្រុមដែលប្រគល់ខ្លួន(ជាមូស្លីម) សម្រាប់ទ្រង់ផង ព្រមទាំងបង្ហាញដល់យើងខ្ញុំនូវរបៀបគោរពសក្ការៈរបស់យើងខ្ញុំ និងអភ័យទោសដល់យើងខ្ញុំផង ។ ពិតប្រាកដណាស់ ទ្រង់ជាអ្នក

---

១-កាក់ហ្ពះ : ជាកន្លែងមួយស្ថិតនៅប្រទេសអារ៉ាប៊ីសាអ៊ូឌីត ដែលសាសនិកអ៊ីស្លាមតម្រង់ក្នុងពេលគោរពសក្ការៈ ។
២-ម៉ាកមអ៊ីព្រហ៊ីម : ជាកន្លែងដែលអ៊ីព្រហ៊ីមឈរសង់កាក់ហ្ពះជាមួយកូនរបស់គាត់អ៊ីស្មាអ៊ីល ។
៣-តវ៉ាហ្វ : ការដើរជុំវិញកាក់ហ្ពះនៅពេលធ្វើហាជ្ជី ឬអ៊ំរ៉ោះ ។
៤-អៀកទីកាហ្វ : ការធ្វើសមាធិនៅក្នុងម៉ាស្ជិទ ។

ទទួលយកការសារភាពកំហុស ជាអ្នកអាណិតស្រឡាញ់បំផុត ។

رَبَّنَا وَٱبۡعَثۡ فِيهِمۡ رَسُولاً مِّنۡهُمۡ يَتۡلُواْ عَلَيۡهِمۡ
ءَايَـٰتِكَ وَيُعَلِّمُهُمُ ٱلۡكِتَـٰبَ وَٱلۡحِكۡمَةَ وَيُزَكِّيهِمۡۚ
إِنَّكَ أَنتَ ٱلۡعَزِيزُ ٱلۡحَكِيمُ ﴿١٢٩﴾

១២៩-ឱម្ចាស់របស់យើងខ្ញុំ! សូមទ្រង់មេត្តាតែងតាំងអ្នកនាំសារម្នាក់អំពីពួកគេ(កូនចៅអ៊ីស្មាអ៊ីល)ឱ្យពួកគេផង ដើម្បីគាត់នឹងសូត្រអាយ៉ាត់ៗរបស់ទ្រង់ឱ្យពួកគេស្តាប់ ហើយបង្រៀនគម្ពីរ(គួរអាន) និងមាគ៌ារបស់គាត់ដល់ពួកគេ ហើយនិងដើម្បីជំរះ(បាបកម្ម)ពួកគេផង ។ ពិតប្រាកដណាស់ ទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

وَمَن يَرۡغَبُ عَن مِّلَّةِ إِبۡرَٲهِـۧمَ إِلَّا مَن سَفِهَ
نَفۡسَهُۥۚ وَلَقَدِ ٱصۡطَفَيۡنَـٰهُ فِى ٱلدُّنۡيَاۖ وَإِنَّهُۥ
فِى ٱلۡأَخِرَةِ لَمِنَ ٱلصَّـٰلِحِينَ ﴿١٣٠﴾

១៣០-គ្មានអ្នកណាស្អប់ខ្ពើមសាសនារបស់អ៊ីព្រហ៊ីម(សាសនាអ៊ីស្លាម)ឡើយ លើកលែងតែអ្នកដែលល្ងង់ខ្លៅខ្លួនឯងប៉ុណ្ណោះ ។ ហើយជាការពិតណាស់ យើងបានជ្រើសរើសអ៊ីព្រហ៊ីមនៅក្នុងលោកិយនេះ(ជាអ្នកនាំសារ) ហើយពិតប្រាកដណាស់ នៅថ្ងៃបរលោកគាត់នឹងស្ថិតនៅក្នុងចំណោមបណ្តាអ្នកដែលល្អត្រឹមត្រូវ ។

إِذۡ قَالَ لَهُۥ رَبُّهُ ۥۤ أَسۡلِمۡۖ قَالَ أَسۡلَمۡتُ لِرَبِّ
ٱلۡعَـٰلَمِينَ ﴿١٣١﴾

១៣១-(ចូរចងចាំ)នៅពេលដែលម្ចាស់របស់អ៊ីព្រហ៊ីមបានមានបន្ទូលទៅកាន់គាត់ថា:ចូរអ្នកប្រគល់ខ្លួន(មូស្លីម)! គាត់ក៏ឆ្លើយវិញថា: ខ្ញុំបានប្រគល់ខ្លួនខ្ញុំទៅចំពោះម្ចាស់នៃពិភពទាំងអស់ ។

وَوَصَّىٰ بِهَآ إِبۡرَٲهِـۧمُ بَنِيهِ وَيَعۡقُوبُ يَـٰبَنِىَّ إِنَّ
ٱللَّهَ ٱصۡطَفَىٰ لَكُمُ ٱلدِّينَ فَلَا تَمُوتُنَّ إِلَّا
وَأَنتُم مُّسۡلِمُونَ ﴿١٣٢﴾

១៣២-ហើយអ៊ីព្រហ៊ីមនិងយ៉ាក់កូបបានផ្តាំផ្ញើកូនចៅរបស់ពួកគាត់ចំពោះសាសនាអ៊ីស្លាមថា: ឱកូនចៅរបស់ខ្ញុំ! ពិតប្រាកដណាស់ អល់ឡោះបានជ្រើសរើសសាសនា(អ៊ីស្លាម)សម្រាប់ពួកអ្នក ។ ដូច្នេះ ចូរពួកអ្នកកុំស្លាប់ លើកលែងតែពួកអ្នកជាអ្នកកាន់សាសនាអ៊ីស្លាម ។

أَمۡ كُنتُمۡ شُہَدَآءَ إِذۡ حَضَرَ يَعۡقُوبَ ٱلۡمَوۡتُ إِذۡ
قَالَ لِبَنِيهِ مَا تَعۡبُدُونَ مِنۢ بَعۡدِى قَالُواْ
نَعۡبُدُ إِلَـٰهَكَ وَإِلَـٰهَ ءَابَآٮِٕكَ إِبۡرَٲهِـۧمَ
وَإِسۡمَـٰعِيلَ وَإِسۡحَـٰقَ إِلَـٰهًا وَٲحِدًا وَنَحۡنُ لَهُۥ
مُسۡلِمُونَ ﴿١٣٣﴾

១៣៣-តើពួកអ្នក(យ៉ាហ៊ូទី)បានឃើញច្បាស់ឬទេ នៅពេលដែលយ៉ាក់កូបហៀបនឹងស្លាប់? នៅពេលនោះគាត់បានសួរកូនចៅរបស់គាត់ថា: តើពួកអ្នកគោរពសក្ការៈអ្វីក្រោយពីឪពុកស្លាប់ទៅ? ពួកគេបានឆ្លើយថា: ពួកយើងគោរពសក្ការៈម្ចាស់តែមួយគត់ ដែលជាម្ចាស់របស់លោកឪពុក និងជាម្ចាស់របស់ដូនតាលោកឪពុក ដូចជាអ៊ីព្រហ៊ីម និងអ៊ីស្មាអ៊ីល និងអ៊ីសហាក ។ ហើយចំពោះទ្រង់តែមួយគត់ដែលពួកយើងបានប្រគល់ខ្លួន(កាន់សាសនាអ៊ីស្លាម) ។

تِلۡكَ أُمَّةٌ قَدۡ خَلَتۡۖ لَهَا مَا كَسَبَتۡ وَلَكُم مَّا

១៣៤-ពួកគេទាំងនោះគឺជាប្រជាជាតិដែលបានកន្លងផុតទៅ

ហើយ ។ ពួកគេនឹងទទួលបាននូវអ្វីៗដែលពួកគេបានសាង ហើយពួកអ្នកនឹងទទួលបាននូវអ្វីៗដែលពួកអ្នកបានសាង ។ ហើយពួកអ្នកនឹងមិនត្រូវគេសួរអំពីអ្វីដែលពួកគេបានសាងនោះឡើយ ។

كَسَبْتُمْ ۖ وَلَا تُسْـَٔلُونَ عَمَّا كَانُوا۟ يَعْمَلُونَ ﴿١٣٤﴾

១៣៥-ហើយពួកគេ(យ៉ាហ៊ូទី និងណាសរ៉នី) បាននិយាយថាៈ ចូរពួកអ្នកកាន់តាមសាសនាយ៉ាហ៊ូទីឬសាសនាណាសរ៉នីចុះ ពួកអ្នកនឹងទទួលបាននូវការចង្អុលបង្ហាញជាមិនខាន ។ ចូរអ្នក(មូហាំម៉ាត់) ប្រាប់ពួកគេថាៈ ផ្ទុយទៅវិញ មានតែសាសនារបស់អ៊ីព្រហ៊ីមទេ ដែលជាសាសនាដ៏ត្រឹមត្រូវ ហើយគាត់ពុំស្ថិតនៅក្នុងចំណោមពួកមូស្ហរីគីនឡើយ ។

وَقَالُوا۟ كُونُوا۟ هُودًا أَوْ نَصَـٰرَىٰ تَهْتَدُوا۟ ۗ قُلْ
بَلْ مِلَّةَ إِبْرَٰهِـۧمَ حَنِيفًا ۖ وَمَا كَانَ مِنَ
ٱلْمُشْرِكِينَ ﴿١٣٥﴾

១៣៦-ចូរពួកអ្នក(អ្នកមានជំនឿ) និយាយថាៈ ពួកយើងមានជំនឿនឹងអល់ឡោះ និងអ្វីៗដែលគេបានបញ្ចុះមកឱ្យពួកយើង ហើយនិងអ្វីៗដែលគេបានបញ្ចុះមកឱ្យអ៊ីព្រហ៊ីម និងអ៊ីស្មាអ៊ីល និងអ៊ីសហាក និងយ៉ាក់កូប ព្រមទាំងកូនចៅយ៉ាក់កូប និងអ្វីៗដែលគេបានប្រទានឱ្យមូសា និងអ៊ីសា និងអ្វីៗដែលគេបានប្រទានដល់បណ្ដាណាពីផ្សេងៗទៀតពីម្ចាស់របស់ពួកគេ ។ ពួកយើងពុំរើសអើងណាពីណាម្នាក់ក្នុងចំណោមណាពីទាំងអស់នោះឡើយ ហើយចំពោះទ្រង់តែមួយគត់ដែលពួកយើងបានប្រគល់ខ្លួន(កាន់សាសនាអ៊ីស្លាម) ។

قُولُوٓا۟ ءَامَنَّا بِٱللَّهِ وَمَآ أُنزِلَ إِلَيْنَا وَمَآ أُنزِلَ إِلَىٰٓ
إِبْرَٰهِـۧمَ وَإِسْمَـٰعِيلَ وَإِسْحَـٰقَ وَيَعْقُوبَ
وَٱلْأَسْبَاطِ وَمَآ أُوتِىَ مُوسَىٰ وَعِيسَىٰ وَمَآ أُوتِىَ
ٱلنَّبِيُّونَ مِن رَّبِّهِمْ لَا نُفَرِّقُ بَيْنَ أَحَدٍ
مِّنْهُمْ وَنَحْنُ لَهُۥ مُسْلِمُونَ ﴿١٣٦﴾

១៣៧-ដូច្នេះប្រសិនបើពួកគេ(អ្នកគ្មានជំនឿ) មានជំនឿដូចអ្វីដែលពួកអ្នកមានជំនឿដែរនោះ ពួកគេពិតជានឹងទទួលបាននូវការចង្អុលបង្ហាញ ។ តែប្រសិនបើពួកគេងាកចេញ(គ្មានជំនឿ)វិញ ពួកគេពិតជាស្ថិតនៅក្នុងការប្រឆាំង ។ ដូច្នេះគ្រប់គ្រាន់ហើយដែលមានអល់ឡោះការពារអ្នកពីពួកគេ ។ ហើយទ្រង់មហាឮ មហាដឹង ។

فَإِنْ ءَامَنُوا۟ بِمِثْلِ مَآ ءَامَنتُم بِهِۦ فَقَدِ
ٱهْتَدَوا۟ ۖ وَّإِن تَوَلَّوْا۟ فَإِنَّمَا هُمْ فِى شِقَاقٍ ۖ
فَسَيَكْفِيكَهُمُ ٱللَّهُ ۚ وَهُوَ ٱلسَّمِيعُ
ٱلْعَلِيمُ ﴿١٣٧﴾

១៣៨-(ចូរពួកអ្នកប្រកាន់យក) សាសនាអល់ឡោះ ។ តើមានសាសនាណាមួយដែលប្រសើរជាងសាសនាអល់ឡោះទៀតនោះ? ហើយពួកយើងគឺជាអ្នកដែលគោរពសក្ការៈចំពោះទ្រង់តែមួយគត់ ។

صِبْغَةَ ٱللَّهِ ۖ وَمَنْ أَحْسَنُ مِنَ ٱللَّهِ صِبْغَةً ۖ
وَنَحْنُ لَهُۥ عَـٰبِدُونَ ﴿١٣٨﴾

១៣៩-ចូរអ្នក(មូហាំម៉ាត់) ពោលថាៈ តើពួកអ្នក(យ៉ាហ៊ូទី និងណាសរ៉នី) កំពុងប្រកែកនឹងពួកយើងអំពីរឿង(ជំនឿលើ) អល់ឡោះដែលទ្រង់ជាម្ចាស់របស់យើង និងជាម្ចាស់របស់ពួកអ្នកឬ? ហើយ

قُلْ أَتُحَآجُّونَنَا فِى ٱللَّهِ وَهُوَ رَبُّنَا وَرَبُّكُمْ
وَلَنَآ أَعْمَـٰلُنَا وَلَكُمْ أَعْمَـٰلُكُمْ وَنَحْنُ لَهُۥ

مُخۡلِصُونَ ١٣٩

أَمۡ تَقُولُونَ إِنَّ إِبۡرَٰهِـۧمَ وَإِسۡمَٰعِيلَ
وَإِسۡحَٰقَ وَيَعۡقُوبَ وَٱلۡأَسۡبَاطَ كَانُواْ
هُودًا أَوۡ نَصَٰرَىٰۗ قُلۡ ءَأَنتُمۡ أَعۡلَمُ أَمِ ٱللَّهُۗ
وَمَنۡ أَظۡلَمُ مِمَّن كَتَمَ شَهَٰدَةً عِندَهُۥ مِنَ
ٱللَّهِۗ وَمَا ٱللَّهُ بِغَٰفِلٍ عَمَّا تَعۡمَلُونَ ١٤٠

تِلۡكَ أُمَّةٞ قَدۡ خَلَتۡۖ لَهَا مَا كَسَبَتۡ وَلَكُم
مَّا كَسَبۡتُمۡۖ وَلَا تُسۡـَٔلُونَ عَمَّا كَانُواْ
يَعۡمَلُونَ ١٤١

۞ سَيَقُولُ ٱلسُّفَهَآءُ مِنَ ٱلنَّاسِ مَا وَلَّىٰهُمۡ
عَن قِبۡلَتِهِمُ ٱلَّتِي كَانُواْ عَلَيۡهَاۚ قُل لِّلَّهِ ٱلۡمَشۡرِقُ
وَٱلۡمَغۡرِبُۚ يَهۡدِي مَن يَشَآءُ إِلَىٰ صِرَٰطٖ
مُّسۡتَقِيمٖ ١٤٢

وَكَذَٰلِكَ جَعَلۡنَٰكُمۡ أُمَّةٗ وَسَطٗا لِّتَكُونُواْ
شُهَدَآءَ عَلَى ٱلنَّاسِ وَيَكُونَ ٱلرَّسُولُ عَلَيۡكُمۡ
شَهِيدٗاۗ وَمَا جَعَلۡنَا ٱلۡقِبۡلَةَ ٱلَّتِي كُنتَ عَلَيۡهَآ
إِلَّا لِنَعۡلَمَ مَن يَتَّبِعُ ٱلرَّسُولَ مِمَّن يَنقَلِبُ

ពួកយើងនឹងទទួលបាន(ការតបស្នង)ទៅតាមទង្វើរបស់ពួកយើង ហើយពួកអ្នកនឹងទទួលបាន(ការតបស្នង)ទៅតាមទង្វើរបស់ពួកអ្នក។ ហើយពួកយើងជាអ្នកស្មោះត្រង់ចំពោះទ្រង់តែមួយគត់។

១៤០-ឬមួយពួកអ្នកអះអាងថាៈ ពិតប្រាកដណាស់ អ៊ីព្រហ៊ីម និងអ៊ីស្មាអ៊ីល និងអ៊ីសហាក និងយ៉ាក់កូប និងកូនចៅយ៉ាក់កូបទាំងអស់នោះគឺជាអ្នកកាន់សាសនាយ៉ាហ៊ូទី ឬណាសរ៉នី? ចូរអ្នក(មូហាំ-ម៉ាត់)តបវិញថាៈ តើពួកអ្នកដឹងជាង ឬអល់ឡោះ(ដឹងជាង)? ហើយតើមានអ្នកណាដែលបំពានជាងអ្នកដែលបានលាក់ភស្តុតាង[1] ដែលមកពីអល់ឡោះនៅជាមួយគេនោះ? ហើយអល់ឡោះមិនព្រងើយកន្តើយនូវអ្វីដែលពួកអ្នកកំពុងប្រព្រឹត្តឡើយ។

១៤១-ពួកគេទាំងនោះគឺជាប្រជាជាតិដែលបានកន្លងផុតទៅហើយ។ ពួកគេនឹងទទួលបាននូវអ្វីៗដែលពួកគេបានសាង ហើយពួកអ្នកនឹងទទួលបាននូវអ្វីៗដែលពួកអ្នកបានសាង។ ហើយពួកអ្នកនឹងមិនត្រូវគេសួរអំពីអ្វីដែលពួកគេបានសាងនោះឡើយ។

១៤២-មនុស្សឆោតល្ងង់មួយចំនួននឹងនិយាយថាៈ តើអ្វីទៅដែលធ្វើឱ្យពួកគេ(មូស្លីម)បែរចេញពីគិបឡាត់[2] (ទិសឆ្ពោះទៅយេរ៉ូសាឡឹម)ដែលពួកគេធ្លាប់តម្រង់ពីមុនមក(នៅពេលដែលពួកគេថ្វាយបង្គំ)? ចូរអ្នក(មូហាំម៉ាត់)តបវិញថាៈ ទិសខាងកើត និងទិសខាងលិចគឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ទ្រង់ចង្អុលបង្ហាញអ្នកណាដែលទ្រង់មានចេតនាទៅកាន់មាគ៌ាដ៏ត្រឹមត្រូវ។

១៤៣-ដូច្នោះដែរ យើងបានបង្កើតពួកអ្នកជាប្រជាជាតិមួយប្រកបដោយយុត្តិធម៌ ដើម្បីឱ្យពួកអ្នកធ្វើជាសាក្សីលើមនុស្សលោក ហើយអ្នកនាំសារ(មូហាំម៉ាត់)ជាសាក្សីលើពួកអ្នក(នៅថ្ងៃបរ-លោក)។ ហើយយើងមិនបានបង្វែរគិបឡាត់ដែលអ្នកធ្លាប់តម្រង់នោះឡើយ លើកលែងតែដើម្បីយើងសាកល្បងអ្នកដែលដើរតាមអ្នកនាំសារ(មូហាំម៉ាត់)ពីអ្នកដែលប្រឆាំង(មិនតម្រង់គិបឡាត់)

---

១-ជឿលើមូហាំម៉ាត់នៅពេលដែលគាត់កើតមកជាអ្នកនាំសារដូចបានចែងនៅក្នុងគម្ពីរតាវរ៉ត និងគម្ពីរអ៊ីញជីលរបស់គេ។
២-គិបឡាត់ : ជាទិសថ្វាយបង្គំរបស់សាសនិកអ៊ីស្លាម។

عَلَىٰ عَقِبَيۡهِۚ وَإِن كَانَتۡ لَكَبِيرَةً إِلَّا عَلَى
ٱلَّذِينَ هَدَى ٱللَّهُۗ وَمَا كَانَ ٱللَّهُ لِيُضِيعَ
إِيمَٰنَكُمۡۚ إِنَّ ٱللَّهَ بِٱلنَّاسِ لَرَءُوفٞ
رَّحِيمٞ ١٤٣

តែប៉ុណ្ណោះ ។ ហើយតាមការពិតវាជាការធ្ងន់ធ្ងរបំផុត លើកលែងតែបណ្ដាអ្នកដែលអល់ឡោះបានចង្អុលបង្ហាញប៉ុណ្ណោះ ។ ហើយអល់ឡោះនឹងមិនធ្វើឱ្យជំនឿរបស់ពួកអ្នកបាត់បង់ឡើយ ។ ពិតប្រាកដណាស់ អល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ចំពោះមនុស្សលោក ។

قَدۡ نَرَىٰ تَقَلُّبَ وَجۡهِكَ فِي ٱلسَّمَآءِۖ
فَلَنُوَلِّيَنَّكَ قِبۡلَةٗ تَرۡضَىٰهَاۚ فَوَلِّ وَجۡهَكَ شَطۡرَ
ٱلۡمَسۡجِدِ ٱلۡحَرَامِۚ وَحَيۡثُ مَا كُنتُمۡ فَوَلُّواْ
وُجُوهَكُمۡ شَطۡرَهُۥۗ وَإِنَّ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ
لَيَعۡلَمُونَ أَنَّهُ ٱلۡحَقُّ مِن رَّبِّهِمۡۗ وَمَا ٱللَّهُ
بِغَٰفِلٍ عَمَّا يَعۡمَلُونَ ١٤٤

១៤៤-ជាការពិតណាស់ យើងឃើញមុខរបស់អ្នក(មូហាំម៉ាត់) ងើយសម្លឹងទៅលើមេឃ(នៅពេលបួងសួងសុំ) ។ ហេតុនេះ យើងពិតជានឹងបំបែរអ្នកឆ្ពោះទៅគិបឡាត់ដែលអ្នកពេញចិត្តនឹងវា ។ ដូច្នេះ ចូរអ្នកបែរមុខរបស់អ្នកទៅទិសម៉ាស្ជិទិលហារ៉ មចុះ ។ ហើយទោះបីពួកអ្នកនៅទីណាក៏ដោយ ចូរពួកអ្នកបែរមុខ(សឡាត)របស់ពួកអ្នកទៅរកទិសនោះ ។ ហើយជាការពិតណាស់ ពួកដែលត្រូវបានគេផ្ដល់គម្ពីរ(យ៉ាហ៊ូទី និងណាសរ៉នី)នោះ ពួកគេដឹងយ៉ាងច្បាស់ថា(ការផ្លាស់ប្ដូរគិបឡាត់) វាគឺជាការពិតមកពីម្ចាស់របស់ពួកគេ ។ ហើយអល់ឡោះមិនព្រងើយកន្ដើយនូវអ្វីដែលពួកគេកំពុងប្រព្រឹត្តឡើយ ។

وَلَئِنۡ أَتَيۡتَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ بِكُلِّ ءَايَةٖ مَّا
تَبِعُواْ قِبۡلَتَكَۚ وَمَآ أَنتَ بِتَابِعٖ قِبۡلَتَهُمۡۚ وَمَا
بَعۡضُهُم بِتَابِعٖ قِبۡلَةَ بَعۡضٖۚ وَلَئِنِ ٱتَّبَعۡتَ
أَهۡوَآءَهُم مِّنۢ بَعۡدِ مَا جَآءَكَ مِنَ ٱلۡعِلۡمِ
إِنَّكَ إِذٗا لَّمِنَ ٱلظَّٰلِمِينَ ١٤٥

១៤៥-ហើយសូម្បីតែអ្នក(មូហាំម៉ាត់)បានផ្ដល់ជូនពួកដែលត្រូវបានគេផ្ដល់គម្ពីរ(តាវ៉ រ៉ត និងអ៊ីញជីល)នូវរាល់ភស្ដុតាងក៏ដោយ ក៏ពួកគេមិនបានតាមគិបឡាត់របស់អ្នកដែរ ។ ហើយអ្នកក៏ពុំមែនជាអ្នកតាមគិបឡាត់របស់ពួកគេដែរ ។ ហើយពួកគេមួយចំនួនក៏ពុំមែនជាអ្នកតាមគិបឡាត់របស់ពួកគេមួយចំនួនទៀតនោះដែរ ។ ហើយជាការពិតណាស់ ប្រសិនបើអ្នកធ្វើតាមចំណង់របស់ពួកគេបន្ទាប់ពីអ្នកបានទទួលនូវចំណេះដឹង(ពីអល់ឡោះ)ហើយនោះ ពិតប្រាកដណាស់ប្រសិនបើដូច្នោះ អ្នកពិតជាស្ថិតនៅក្នុងចំណោមពួកដែលបំពាន ។

ٱلَّذِينَ ءَاتَيۡنَٰهُمُ ٱلۡكِتَٰبَ يَعۡرِفُونَهُۥ كَمَا
يَعۡرِفُونَ أَبۡنَآءَهُمۡۖ وَإِنَّ فَرِيقٗا مِّنۡهُمۡ لَيَكۡتُمُونَ
ٱلۡحَقَّ وَهُمۡ يَعۡلَمُونَ ١٤٦

១៤៦-ចំពោះពួកដែលយើងបានផ្ដល់ឱ្យពួកគេនូវគម្ពីរ(តាវ៉ រ៉ត និងអ៊ិញជីល)គឺពួកគេស្គាល់គាត់(មូហាំម៉ាត់) ក៏ដូចជាពួកគេស្គាល់កូនៗរបស់ពួកគេដែរ ។ ហើយពិតប្រាកដណាស់ មួយក្រុមនៃពួកគេនោះពិតជាលាក់បាំងនូវការពិត ខណៈដែលពួកគេដឹង ។

១៤៧-នេះជាការពិតមកពីម្ចាស់របស់អ្នក( មូហាំម៉ាត់) ។ ដូច្នេះ ចូរអ្នកកុំក្លាយជាអ្នកដែលស្ថិតនៅក្នុងចំណោមអ្នកដែលសង្ស័យឱ្យសោះ ។

ٱلۡحَقُّ مِن رَّبِّكَ ۖ فَلَا تَكُونَنَّ مِنَ
ٱلۡمُمۡتَرِينَ ١٤٧

១៤៨-ហើយសម្រាប់រាល់ប្រជាជាតិនីមួយៗមានទិស ( គឺប-ឡាត់) ដែលគេតម្រង់ទៅរកវា ។ ហេតុនេះ ចូរពួកអ្នកប្រជែងគ្នាក្នុងការធ្វើអំពើល្អ ។ ទោះបីជាពួកអ្នកនៅកន្លែងណាក៏ដោយ ក៏អល់ឡោះនឹងប្រមូលផ្តុំពួកអ្នកទាំងអស់( នៅថ្ងៃបរលោក) ដែរ ។ ពិតប្រាកដណាស់ អល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

وَلِكُلّٖ وِجۡهَةٌ هُوَ مُوَلِّيهَا ۖ فَٱسۡتَبِقُواْ ٱلۡخَيۡرَٰتِ ۚ
أَيۡنَ مَا تَكُونُواْ يَأۡتِ بِكُمُ ٱللَّهُ جَمِيعًا ۚ إِنَّ ٱللَّهَ
عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ١٤٨

១៤៩-ហើយគ្រប់កន្លែងដែលអ្នកចេញដំណើរ( ហើយអ្នកចង់សឡាត) ចូរអ្នកតម្រង់មុខរបស់អ្នកទៅកាន់ទិសម៉ាស្ជិទីលហារ៉ម ។ ហើយពិតប្រាកដណាស់ វាគឺជាការពិតមកពីម្ចាស់របស់អ្នក ។ ហើយអល់ឡោះមិនព្រងើយកន្តើយនូវអ្វីដែលពួកអ្នកកំពុងប្រព្រឹត្តនោះឡើយ ។

وَمِنۡ حَيۡثُ خَرَجۡتَ فَوَلِّ وَجۡهَكَ شَطۡرَ
ٱلۡمَسۡجِدِ ٱلۡحَرَامِ ۖ وَإِنَّهُۥ لَلۡحَقُّ مِن رَّبِّكَ ۗ
وَمَا ٱللَّهُ بِغَٰفِلٍ عَمَّا تَعۡمَلُونَ ١٤٩

១៥០-ហើយគ្រប់កន្លែងដែលអ្នកចេញដំណើរ( ហើយអ្នកចង់សឡាត) ចូរអ្នកតម្រង់មុខរបស់អ្នកទៅកាន់ទិសម៉ាស្ជិទីលហារ៉ម ។ ហើយពួកអ្នកនៅទីកន្លែងណាក៏ដោយ ចូរពួកអ្នកតម្រង់មុខរបស់ពួកអ្នកទៅកាន់ទិសរបស់វា ដើម្បីកុំឱ្យមនុស្សជជែកតវ៉ានឹងពួកអ្នក លើកលែងតែពួកមួយចំនួនក្នុងចំណោមពួកគេដែលបានបំពានប៉ុណ្ណោះ ។ ដូច្នេះ ចូរពួកអ្នកកុំខ្លាចពួកគេ ហើយចូរពួកអ្នកកោតខ្លាចយើងវិញ ហើយយើងប្រាកដជានឹងបំពេញនូវនៀកម៉ាត់របស់យើងលើពួកអ្នក និងដើម្បីពួកអ្នកមានការចង្អុលបង្ហាញ ។

وَمِنۡ حَيۡثُ خَرَجۡتَ فَوَلِّ وَجۡهَكَ شَطۡرَ
ٱلۡمَسۡجِدِ ٱلۡحَرَامِ ۚ وَحَيۡثُ مَا كُنتُمۡ فَوَلُّواْ
وُجُوهَكُمۡ شَطۡرَهُۥ لِئَلَّا يَكُونَ لِلنَّاسِ
عَلَيۡكُمۡ حُجَّةٌ إِلَّا ٱلَّذِينَ ظَلَمُواْ مِنۡهُمۡ فَلَا
تَخۡشَوۡهُمۡ وَٱخۡشَوۡنِي وَلِأُتِمَّ نِعۡمَتِي عَلَيۡكُمۡ
وَلَعَلَّكُمۡ تَهۡتَدُونَ ١٥٠

១៥១-ដូចជាយើងបានបញ្ជូនទៅកាន់ពួកអ្នកនូវអ្នកនាំសារ ( មូហាំម៉ាត់) ក្នុងចំណោមពួកអ្នក ដើម្បីគេនឹងសូត្រអាយ៉ាត់ៗរបស់យើងឱ្យពួកអ្នកស្តាប់ និងសំអាត( បាបកម្ម) ពួកអ្នក ហើយនិងបង្រៀនដល់ពួកអ្នកនូវគម្ពីរគួរអាន និងមាគ៌ារបស់មូហាំម៉ាត់ ព្រមទាំងបង្រៀនពួកអ្នកនូវអ្វីដែលពួកអ្នកមិនធ្លាប់បានដឹង ។

كَمَآ أَرۡسَلۡنَا فِيكُمۡ رَسُولٗا مِّنكُمۡ يَتۡلُواْ
عَلَيۡكُمۡ ءَايَٰتِنَا وَيُزَكِّيكُمۡ وَيُعَلِّمُكُمُ
ٱلۡكِتَٰبَ وَٱلۡحِكۡمَةَ وَيُعَلِّمُكُم مَّا لَمۡ تَكُونُواْ
تَعۡلَمُونَ ١٥١

១៥២-ដូច្នេះ ចូរពួកអ្នករំលឹកមកចំពោះយើង យើងប្រាកដជានឹកដល់ពួកអ្នកវិញ ហើយចូរពួកអ្នកដឹងគុណចំពោះយើង ហើយកុំ

فَٱذۡكُرُونِيٓ أَذۡكُرۡكُمۡ وَٱشۡكُرُواْ لِي وَلَا

រមិលគុណចំពោះយើងឱ្យសោះ ។

១៥៣-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកសុំជំនួយ(ពីអល់ឡោះ)ដោយអត់ធ្មត់ និងប្រតិបត្តិសឡាត ។ ពិតប្រាកដណាស់ អល់ឡោះនៅជាមួយបណ្ដាអ្នកដែលអត់ធ្មត់ ។

១៥៤-ហើយចូរពួកអ្នកកុំនិយាយចំពោះអ្នកដែលត្រូវបានគេសម្លាប់ក្នុងមាគ៌ារបស់អល់ឡោះថាៈ "ពួកគេស្លាប់" ឱ្យសោះ ។ ផ្ទុយទៅវិញពួកគេនៅរស់ ប៉ុន្តែពួកអ្នកមិនអាចដឹងបានឡើយ ។

១៥៥-ហើយយើងពិតជានឹងសាកល្បងពួកអ្នកដោយការភ័យខ្លាច និងភាពអត់ឃ្លាន និងកង្វះទ្រព្យសម្បត្តិ និងសេចក្ដីស្លាប់ និងកង្វះផលានុផល ។ ហើយចូរអ្នក(មូហាំម៉ាត់)ផ្ដល់ដំណឹងរីករាយដល់បណ្ដាអ្នកដែលអត់ធ្មត់ ។

១៥៦-ពួកដែលនៅពេលគ្រោះមហន្តរាយណាមួយបានធ្លាក់លើពួកគេ ពួកគេបាននិយាយថាៈ ពិតប្រាកដណាស់ ពួកយើងជាកម្មសិទ្ធិរបស់អល់ឡោះ ហើយពិតប្រាកដណាស់ ពួកយើងនឹងវិលត្រឡប់ទៅរកទ្រង់វិញ ។

១៥៧-អ្នកទាំងនោះហើយដែលនឹងទទួលបានការសរសើរ និងការអាណិតស្រឡាញ់ពីម្ចាស់របស់ពួកគេ ។ ហើយអ្នកទាំងនោះជាអ្នកដែលទទួលបានការចង្អុលបង្ហាញ ។

១៥៨-ជាការពិតណាស់ ភ្នំសហ្វានិងភ្នំម៉ារវ៉ាស់គឺជាផ្នែកមួយនៃសញ្ញាក្នុងការគោរពសក្ការៈចំពោះអល់ឡោះ ។ ហេតុនេះបុគ្គលណាដែលធ្វើហាជ្ជី ឬអ៊ំរ៉ោះនៅប៉ៃតុលឡោះ គឺគ្មានទោសពៃរ៍អ្វីឡើយទៅលើគេដែលគេសាអ៊ី[១] រវាងភ្នំទាំងពីរនេះ ។ ហើយបុគ្គលណាដែលបានស្ម័គ្រចិត្តធ្វើអំពើល្អ ពិតប្រាកដណាស់អល់ឡោះមហាដឹងគុណ មហាដឹង ។

១៥៩-ពិតប្រាកដណាស់ ពួកដែលលាក់បាំងនូវអ្វីដែលយើងបានបញ្ចុះអំពីភស្តុតាង១ និងការចង្អុលបង្ហាញក្រោយពីយើងបាន

تَكۡفُرُونِ ﴿١٥٢﴾

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱسۡتَعِينُواْ بِٱلصَّبۡرِ وَٱلصَّلَوٰةِۚ إِنَّ ٱللَّهَ مَعَ ٱلصَّـٰبِرِينَ ﴿١٥٣﴾

وَلَا تَقُولُواْ لِمَن يُقۡتَلُ فِي سَبِيلِ ٱللَّهِ أَمۡوَٰتُۢۚ بَلۡ أَحۡيَآءٞ وَلَٰكِن لَّا تَشۡعُرُونَ ﴿١٥٤﴾

وَلَنَبۡلُوَنَّكُم بِشَيۡءٖ مِّنَ ٱلۡخَوۡفِ وَٱلۡجُوعِ وَنَقۡصٖ مِّنَ ٱلۡأَمۡوَٰلِ وَٱلۡأَنفُسِ وَٱلثَّمَرَٰتِۗ وَبَشِّرِ ٱلصَّـٰبِرِينَ ﴿١٥٥﴾

ٱلَّذِينَ إِذَآ أَصَـٰبَتۡهُم مُّصِيبَةٞ قَالُوٓاْ إِنَّا لِلَّهِ وَإِنَّآ إِلَيۡهِ رَٰجِعُونَ ﴿١٥٦﴾

أُوْلَـٰٓئِكَ عَلَيۡهِمۡ صَلَوَٰتٞ مِّن رَّبِّهِمۡ وَرَحۡمَةٞۖ وَأُوْلَـٰٓئِكَ هُمُ ٱلۡمُهۡتَدُونَ ﴿١٥٧﴾

۞إِنَّ ٱلصَّفَا وَٱلۡمَرۡوَةَ مِن شَعَآئِرِ ٱللَّهِۖ فَمَنۡ حَجَّ ٱلۡبَيۡتَ أَوِ ٱعۡتَمَرَ فَلَا جُنَاحَ عَلَيۡهِ أَن يَطَّوَّفَ بِهِمَاۚ وَمَن تَطَوَّعَ خَيۡرٗا فَإِنَّ ٱللَّهَ شَاكِرٌ عَلِيمٌ ﴿١٥٨﴾

إِنَّ ٱلَّذِينَ يَكۡتُمُونَ مَآ أَنزَلۡنَا مِنَ ٱلۡبَيِّنَٰتِ

១-សាអ៊ី : ការដើរពីភ្នំសហ្វាទៅភ្នំម៉ារវ៉ះចំនួនប្រាំពីរជុំក្នុងពេលធ្វើហាជ្ជី ឬអ៊ំរ៉ោះ ។

وَٱلۡهُدَىٰ مِنۢ بَعۡدِ مَا بَيَّنَّٰهُ لِلنَّاسِ فِي ٱلۡكِتَٰبِ أُوْلَٰٓئِكَ يَلۡعَنُهُمُ ٱللَّهُ وَيَلۡعَنُهُمُ ٱللَّٰعِنُونَ ١٥٩

បំភ្លឺវាដល់មនុស្សលោកនៅក្នុងគម្ពីរ( តាវ៉រ៉ត និងអ៊ីញជីល) ពួកនោះត្រូវអល់ឡោះដាក់បណ្តាសាពួកគេ ។ ហើយបណ្តាអ្នកដាក់បណ្តាសាក៏ដាក់បណ្តាសាពួកនោះដែរ ។

إِلَّا ٱلَّذِينَ تَابُواْ وَأَصۡلَحُواْ وَبَيَّنُواْ فَأُوْلَٰٓئِكَ أَتُوبُ عَلَيۡهِمۡ وَأَنَا ٱلتَّوَّابُ ٱلرَّحِيمُ ١٦٠

១៦០-លើកលែងតែបណ្តាអ្នកដែលបានសារភាពកំហុស និងកែលំអខ្លួន ព្រមទាំងលាតត្រដាង( នូវអ្វីដែលពួកគេបានលាក់បាំង) ប៉ុណ្ណោះ ។ ដូច្នេះ ពួកទាំងនោះយើងនឹងទទួលយកការសារភាពកំហុសរបស់ពួកគេ ។ ហើយយើងជាអ្នកទទួលយកការសារភាពកំហុស ជាអ្នកអាណិតស្រឡាញ់បំផុត ។

إِنَّ ٱلَّذِينَ كَفَرُواْ وَمَاتُواْ وَهُمۡ كُفَّارٌ أُوْلَٰٓئِكَ عَلَيۡهِمۡ لَعۡنَةُ ٱللَّهِ وَٱلۡمَلَٰٓئِكَةِ وَٱلنَّاسِ أَجۡمَعِينَ ١٦١

១៦១-ពិតប្រាកដណាស់ ពួកដែលបានប្រឆាំង ហើយបានស្លាប់ក្នុងនាមពួកគេជាអ្នកប្រឆាំង ពួកទាំងនោះពិតជាត្រូវទទួលបណ្តាសារបស់អល់ឡោះ និងបណ្តាម៉ាឡាអ៊ីកាត់ ព្រមទាំងមនុស្សលោកទាំងអស់ជាមិនខាន ។

خَٰلِدِينَ فِيهَا لَا يُخَفَّفُ عَنۡهُمُ ٱلۡعَذَابُ وَلَا هُمۡ يُنظَرُونَ ١٦٢

១៦២-ពួកគេនឹងស្ថិតនៅក្នុងវា( នរក) ជាអមតៈ ។ ទារុណកម្មនឹងមិនត្រូវគេបន្ធូរបន្ថយចំពោះពួកគេឡើយ ហើយពួកគេក៏មិនត្រូវគេពន្យារពេល( ឱ្យដោះសា) ដែរ ។

وَإِلَٰهُكُمۡ إِلَٰهٞ وَٰحِدٞۖ لَّآ إِلَٰهَ إِلَّا هُوَ ٱلرَّحۡمَٰنُ ٱلرَّحِيمُ ١٦٣

១៦៣-ហើយម្ចាស់របស់ពួកអ្នកគឺជាម្ចាស់តែមួយគត់ ។ គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ដែលមហាសប្បុរស មហាអាណិតស្រឡាញ់នោះឡើយ ។

إِنَّ فِي خَلۡقِ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَٱخۡتِلَٰفِ ٱلَّيۡلِ وَٱلنَّهَارِ وَٱلۡفُلۡكِ ٱلَّتِي تَجۡرِي فِي ٱلۡبَحۡرِ بِمَا يَنفَعُ ٱلنَّاسَ وَمَآ أَنزَلَ ٱللَّهُ مِنَ ٱلسَّمَآءِ مِن مَّآءٖ فَأَحۡيَا بِهِ ٱلۡأَرۡضَ بَعۡدَ مَوۡتِهَا وَبَثَّ فِيهَا مِن كُلِّ دَآبَّةٖ وَتَصۡرِيفِ ٱلرِّيَٰحِ وَٱلسَّحَابِ ٱلۡمُسَخَّرِ بَيۡنَ ٱلسَّمَآءِ وَٱلۡأَرۡضِ لَأٓيَٰتٖ لِّقَوۡمٖ يَعۡقِلُونَ ١٦٤

១៦៤-ពិតប្រាដកណាស់ ការបង្កើតមេឃជាច្រើនជាន់ និងផែនដី និងការផ្លាស់ប្តូរវេនរវាងយប់និងថ្ងៃ និងនាវាដែលធ្វើដំណើរលើផ្ទៃសមុទ្រដែលផ្តល់ផលប្រយោជន៍ដល់មនុស្សលោក ។ ហើយទឹកភ្លៀងដែលអល់ឡោះបានបញ្ចុះពីលើមេឃ ហើយតាមរយៈទឹកភ្លៀងនេះទ្រង់បានធ្វើឱ្យដីរស់ឡើងវិញ( មានជីជាតិ) បន្ទាប់ពីការស្លាប់( គ្មានជីជាតិ) របស់វា ។ ហើយទ្រង់បានពង្រាយនៅលើផ្ទៃដីនេះនូវសត្វគ្រប់ប្រភេទ ។ ហើយការផ្លាស់ប្តូរទិសរបស់ខ្យល់ និងពពកដែលធ្វើចលនារវាងមេឃនិងផែនដី គឺជាភស្តុតាងៗសម្រាប់ក្រុមដែលស្វែងយល់ ។

وَمِنَ ٱلنَّاسِ مَن يَتَّخِذُ مِن دُونِ ٱللَّهِ

១៦៥-ហើយមានមនុស្សមួយចំនួនគេយកព្រះនានាធ្វើជាម្ចាស់

أَندَادٗا يُحِبُّونَهُمۡ كَحُبِّ ٱللَّهِۖ وَٱلَّذِينَ ءَامَنُوٓاْ
أَشَدُّ حُبّٗا لِّلَّهِۗ وَلَوۡ يَرَى ٱلَّذِينَ ظَلَمُوٓاْ إِذۡ يَرَوۡنَ
ٱلۡعَذَابَ أَنَّ ٱلۡقُوَّةَ لِلَّهِ جَمِيعٗا وَأَنَّ ٱللَّهَ
شَدِيدُ ٱلۡعَذَابِ ١٦٥

ក្រៅពីអល់ឡោះ ដែលពួកគេស្រឡាញ់ពេញចិត្តពួកព្រះទាំងនោះដូចជាការស្រឡាញ់អល់ឡោះដែរ ។ រីឯបណ្ដាអ្នកដែលមានជំនឿវិញ គឺពួកគេស្រឡាញ់អល់ឡោះលើសពីអ្វីៗទាំងអស់ ។ ហើយប្រសិនបើពួកដែលបានបំពានដឹងនៅពេលដែលពួកគេឃើញទារុណកម្ម( នៅថ្ងៃបរលោក ពួកគេនឹងនិយាយថា) ពិតប្រាកដណាស់អំណាចទាំងអស់ជាកម្មសិទ្ធិរបស់អល់ឡោះតែមួយគត់ ។ ហើយពិតប្រាកដណាស់ អល់ឡោះជាអ្នកធ្វើទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត ។

إِذۡ تَبَرَّأَ ٱلَّذِينَ ٱتُّبِعُواْ مِنَ ٱلَّذِينَ ٱتَّبَعُواْ
وَرَأَوُاْ ٱلۡعَذَابَ وَتَقَطَّعَتۡ بِهِمُ ٱلۡأَسۡبَابُ ١٦٦

១៦៦-នៅពេលនោះ ពួក( មេដឹកនាំ) ដែលគេបានដើរតាមបានយករួចខ្លួនពីពួកដែលបានដើរតាមពួកគេនៅពេលដែលពួកគេបានឃើញទារុណកម្ម( នៅថ្ងៃបរលោក) ហើយទំនាក់ទំនងទាំងអស់ត្រូវបានកាត់ផ្ដាច់ពីពួកគេ ។

وَقَالَ ٱلَّذِينَ ٱتَّبَعُواْ لَوۡ أَنَّ لَنَا كَرَّةٗ فَنَتَبَرَّأَ
مِنۡهُمۡ كَمَا تَبَرَّءُواْ مِنَّاۗ كَذَٰلِكَ يُرِيهِمُ ٱللَّهُ
أَعۡمَٰلَهُمۡ حَسَرَٰتٍ عَلَيۡهِمۡۖ وَمَا هُم بِخَٰرِجِينَ
مِنَ ٱلنَّارِ ١٦٧

១៦៧-ហើយពួកដែលបានដើរតាមពួកគេ( មេដឹកនាំ) បាននិយាយថា: ប្រសិនបើពួកយើងមានឱកាសត្រឡប់មក( រស់នៅលើលោកិយ) ម្ដងទៀត គឺពួកយើងនឹងយករួចខ្លួនពីពួកគេ ដូចដែលពួកគេបានយករួចខ្លួនពីពួកយើងដែរ ។ ដូច្នោះដែរអល់ឡោះនឹងបង្ហាញឱ្យពួកគេឃើញនូវទង្វើនានារបស់ពួកគេ ដែលធ្វើឱ្យពួកគេមានវិប្បដិសារីយ៉ាងខ្លាំង ។ ហើយពួកគេមិនអាចចេញពីឋាននរកបានឡើយ ។

يَٰٓأَيُّهَا ٱلنَّاسُ كُلُواْ مِمَّا فِي ٱلۡأَرۡضِ حَلَٰلٗا
طَيِّبٗا وَلَا تَتَّبِعُواْ خُطُوَٰتِ ٱلشَّيۡطَٰنِۚ إِنَّهُۥ
لَكُمۡ عَدُوّٞ مُّبِينٌ ١٦٨

១៦៨-ឱមនុស្សលោក! ចូរពួកអ្នកបរិភោគនូវអ្វីដែលហាឡាល់[1] ស្អាតស្អំនៅលើផែនដីនេះចុះ ហើយចូរកុំដើរតាមមាគ៌ានានារបស់ស្ហៃតនឱ្យសោះ ។ ពិតប្រាកដណាស់ ស្ហៃតនគឺជាសត្រូវយ៉ាងពិតប្រាកដចំពោះពួកអ្នក ។

إِنَّمَا يَأۡمُرُكُم بِٱلسُّوٓءِ وَٱلۡفَحۡشَآءِ وَأَن تَقُولُواْ
عَلَى ٱللَّهِ مَا لَا تَعۡلَمُونَ ١٦٩

១៦៩-ជាការពិតណាស់ គេ( ស្ហៃតន) ប្រើពួកអ្នកឱ្យប្រព្រឹត្តតែអំពើអាក្រក់ និងអំពើអសីលធម៌ប៉ុណ្ណោះ និងប្រើឱ្យពួកអ្នកនិយាយក្លែងបន្លំចំពោះអល់ឡោះនូវអ្វីដែលពួកអ្នកមិនដឹង ។

وَإِذَا قِيلَ لَهُمُ ٱتَّبِعُواْ مَآ أَنزَلَ ٱللَّهُ قَالُواْ
بَلۡ نَتَّبِعُ مَآ أَلۡفَيۡنَا عَلَيۡهِ ءَابَآءَنَآۚ أَوَلَوۡ

១៧០-ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកអ្នកទាំងនោះថា: ចូរពួកអ្នកប្រតិបត្តិតាមអ្វីដែលអល់ឡោះបានបញ្ចុះ

១-ហាឡាល់ : អ្វីៗដែលច្បាប់អ៊ីស្លាមអនុញ្ញាត ។

كَانَ ءَابَآؤُهُمْ لَا يَعْقِلُونَ شَيْـًٔا وَلَا
يَهْتَدُونَ ﴿١٧٠﴾

មក(គម្ពីរគួរអាន)។ ពួកគេបានតបវិញថា: ទេ! ពួកយើងតាមតែអ្វីដែលមានពីជីដូនជីតារបស់ពួកយើងប៉ុណ្ណោះ។ តើពួកគេតាមដែរឬ ប្រសិនបើជីដូនជីតារបស់ពួកគេឥតយល់ដឹងនិងគ្មានការចង្អុលបង្ហាញអ្វីសោះនោះ?

وَمَثَلُ ٱلَّذِينَ كَفَرُوا۟ كَمَثَلِ ٱلَّذِى يَنْعِقُ بِمَا
لَا يَسْمَعُ إِلَّا دُعَآءً وَنِدَآءً ۚ صُمٌّۢ بُكْمٌ عُمْىٌ
فَهُمْ لَا يَعْقِلُونَ ﴿١٧١﴾

១៧១-ហើយការប្រៀបធៀបពួកដែលប្រឆាំង គឺដូចជាអ្នកគង្វាលដែលស្រែកហៅ(សត្វពាហនៈ) ដោយវាមិនយល់អ្វីក្រៅពីឮសំឡេងអំពាវនាវនិងស្រែកហៅប៉ុណ្ណោះ។ (ពួកនេះ)ថ្លង់ គ និងខ្វាក់ ដូច្នេះពួកគេមិនយល់ដឹងអ្វីឡើយ។

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ كُلُوا۟ مِن طَيِّبَـٰتِ
مَا رَزَقْنَـٰكُمْ وَٱشْكُرُوا۟ لِلَّهِ إِن كُنتُمْ إِيَّاهُ
تَعْبُدُونَ ﴿١٧٢﴾

១៧២-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកបរិភោគចំណីអាហារស្អាតស្អំ(ហាឡាល់) ដែលយើងបានប្រទានដល់ពួកអ្នក ហើយចូរពួកអ្នកដឹងគុណចំពោះអល់ឡោះប្រសិនបើពួកអ្នកជាអ្នកដែលគោរពសក្ការៈចំពោះអល់ឡោះតែមួយគត់នោះ។

إِنَّمَا حَرَّمَ عَلَيْكُمُ ٱلْمَيْتَةَ وَٱلدَّمَ وَلَحْمَ
ٱلْخِنزِيرِ وَمَآ أُهِلَّ بِهِۦ لِغَيْرِ ٱللَّهِ ۖ فَمَنِ ٱضْطُرَّ
غَيْرَ بَاغٍ وَلَا عَادٍ فَلَآ إِثْمَ عَلَيْهِ ۚ إِنَّ ٱللَّهَ
غَفُورٌ رَّحِيمٌ ﴿١٧٣﴾

១៧៣-ការពិតទ្រង់បានហាមឃាត់ចំពោះពួកអ្នកនូវសត្វស្លាប់(ដែលឥតបានសំឡេះតាមច្បាប់អ៊ីស្លាម) និងឈាម និងសាច់ជ្រូក និងអ្វីដែលគេសំឡេះដើម្បីបូជាម្ចាស់ផ្សេងពីអល់ឡោះ។ ហេតុនេះ អ្នកណាដែលត្រូវបានគេបង្ខំ(ឱ្យទទួលទានអ្វីៗទាំងនេះ) ដោយពុំមានចេតនា និងមិនលើសពីតំរូវការចាំបាច់នោះ គឺគ្មានទោសពៃរ៍អ្វីទៅលើគេឡើយ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

إِنَّ ٱلَّذِينَ يَكْتُمُونَ مَآ أَنزَلَ ٱللَّهُ مِنَ
ٱلْكِتَـٰبِ وَيَشْتَرُونَ بِهِۦ ثَمَنًا قَلِيلًا ۙ
أُو۟لَـٰٓئِكَ مَا يَأْكُلُونَ فِى بُطُونِهِمْ إِلَّا ٱلنَّارَ
وَلَا يُكَلِّمُهُمُ ٱللَّهُ يَوْمَ ٱلْقِيَـٰمَةِ وَلَا
يُزَكِّيهِمْ وَلَهُمْ عَذَابٌ أَلِيمٌ ﴿١٧٤﴾

១៧៤-ពិតប្រាដកណាស់ ពួកដែលលាក់បាំងនូវអ្វីដែលអល់ឡោះបានបញ្ចុះនៅក្នុងគម្ពីរ(តាវរ៉ត)ដោយប្តូរយកកម្រៃបន្តិចបន្តួចនឹងវា ពួកទាំងនោះមិនស៊ីអ្វីបញ្ចូលទៅក្នុងពោះរបស់ពួកគេក្រៅពីភ្លើងនរកនោះឡើយ។ ហើយអល់ឡោះមិននិយាយរកពួកគេឡើយនៅថ្ងៃបរលោក ហើយក៏មិនសំអាត(បាបកម្ម)ពួកគេដែរ។ ហើយពួកគេនឹងទទួលទារុណកម្មយ៉ាងឈឺចាប់បំផុត។

أُو۟لَـٰٓئِكَ ٱلَّذِينَ ٱشْتَرَوُا۟ ٱلضَّلَـٰلَةَ بِٱلْهُدَىٰ
وَٱلْعَذَابَ بِٱلْمَغْفِرَةِ ۚ فَمَآ أَصْبَرَهُمْ عَلَى

១៧៥-ពួកទាំងនោះហើយដែលបានយកការចង្អុលបង្ហាញប្តូរយកភាពវង្វេង ហើយយកការអភ័យទោសប្តូរយកទារុណកម្ម។ ដូច្នេះ ពួកគេអាចទ្រាំនឹងភ្លើងនរកបាន!

ٱلنَّارِ ﴿١٧٥﴾
ذَٰلِكَ بِأَنَّ ٱللَّهَ نَزَّلَ ٱلۡكِتَٰبَ بِٱلۡحَقِّۗ
وَإِنَّ ٱلَّذِينَ ٱخۡتَلَفُواْ فِي ٱلۡكِتَٰبِ لَفِي شِقَاقِۭ
بَعِيدٖ ﴿١٧٦﴾
لَّيۡسَ ٱلۡبِرَّ أَن تُوَلُّواْ وُجُوهَكُمۡ قِبَلَ ٱلۡمَشۡرِقِ
وَٱلۡمَغۡرِبِ وَلَٰكِنَّ ٱلۡبِرَّ مَنۡ ءَامَنَ بِٱللَّهِ وَٱلۡيَوۡمِ
ٱلۡأٓخِرِ وَٱلۡمَلَٰٓئِكَةِ وَٱلۡكِتَٰبِ وَٱلنَّبِيِّـۧنَ
وَءَاتَى ٱلۡمَالَ عَلَىٰ حُبِّهِۦ ذَوِي ٱلۡقُرۡبَىٰ
وَٱلۡيَتَٰمَىٰ وَٱلۡمَسَٰكِينَ وَٱبۡنَ ٱلسَّبِيلِ
وَٱلسَّآئِلِينَ وَفِي ٱلرِّقَابِ وَأَقَامَ ٱلصَّلَوٰةَ وَءَاتَى
ٱلزَّكَوٰةَ وَٱلۡمُوفُونَ بِعَهۡدِهِمۡ إِذَا
عَٰهَدُواْۖ وَٱلصَّٰبِرِينَ فِي ٱلۡبَأۡسَآءِ وَٱلضَّرَّآءِ
وَحِينَ ٱلۡبَأۡسِۗ أُوْلَٰٓئِكَ ٱلَّذِينَ صَدَقُواْۖ
وَأُوْلَٰٓئِكَ هُمُ ٱلۡمُتَّقُونَ ﴿١٧٧﴾
يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ كُتِبَ عَلَيۡكُمُ ٱلۡقِصَاصُ
فِي ٱلۡقَتۡلَىۖ ٱلۡحُرُّ بِٱلۡحُرِّ وَٱلۡعَبۡدُ بِٱلۡعَبۡدِ وَٱلۡأُنثَىٰ
بِٱلۡأُنثَىٰۚ فَمَنۡ عُفِيَ لَهُۥ مِنۡ أَخِيهِ شَيۡءٞ
فَٱتِّبَاعُۢ بِٱلۡمَعۡرُوفِ وَأَدَآءٌ إِلَيۡهِ بِإِحۡسَٰنٖۗ
ذَٰلِكَ تَخۡفِيفٞ مِّن رَّبِّكُمۡ وَرَحۡمَةٞۗ فَمَنِ
ٱعۡتَدَىٰ بَعۡدَ ذَٰلِكَ فَلَهُۥ عَذَابٌ أَلِيمٞ ﴿١٧٨﴾

១៧៦-នោះគឺដោយសារតែអល់ឡោះបានបញ្ចុះគម្ពីរ(គួរអាន) ដោយនាំមកនូវការពិត(តែពួកគេមិនគោរពតាម)។ ហើយពួកដែលខ្វែងគំនិតគ្នានៅក្នុងគម្ពីរ(តាវរ៉ាតនិងអ៊ីញជីល) ពួកគេពិតជាស្ថិតក្នុងការបែកបាក់គ្នា ឃ្លាតឆ្ងាយពីការពិត។

១៧៧-ការតម្រង់មុខរបស់ពួកអ្នកឆ្ពោះទៅទិសខាងកើត ឬទិសខាងលិច(ក្នុងការសឡាត)នោះ មិនចាត់ទុកជាអំពើល្អឡើយ។ ប៉ុន្តែអំពើល្អនោះគឺអ្នកណាដែលមានជំនឿលើអល់ឡោះ និងថ្ងៃបរលោក និងម៉ាឡាអ៊ីកាត់ និងគម្ពីរទាំងឡាយ និងបណ្តាណាពី និងបានបរិច្ចាគទ្រព្យសម្បត្តិដែលជាទីស្រឡាញ់របស់គេទៅឱ្យញាតិសន្តាន និងក្មេងកំព្រា និងអ្នកក្រីក្រ និងអ្នកដំណើរ និងអ្នកសុំទាន និងបានចំណាយទ្រព្យក្នុងការដោះលែងទាសករ និងបានប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ ហើយនិងបណ្តាអ្នកដែលគោរពតាមកិច្ចសន្យារបស់ពួកគេនៅពេលដែលពួកគេបានសន្យា និងបណ្តាអ្នកដែលអត់ធ្មត់ក្នុងពេលក្រខ្សត់ និងពេលមានគ្រោះថ្នាក់ និងពេលមានសង្គ្រាម។ អ្នកទាំងនោះគឺជាអ្នកដែលមានជំនឿពិតប្រាកដ ហើយអ្នកទាំងនោះដែរ គឺជាបណ្តាអ្នកដែលកោតខ្លាចអល់ឡោះ។

១៧៨-ឱបណ្តាអ្នកដែលមានជំនឿ! គេបានដាក់កាតព្វកិច្ចលើពួកអ្នកឱ្យមានសមភាពក្នុងការវិនិច្ឆ័យទោសក្នុងរឿងឃាតកម្ម គឺអ្នកដែលមានសិទ្ធិសេរីភាពដោយអ្នកដែលមានសិទ្ធិសេរីភាព និងទាសករដោយទាសករ និងស្ត្រីដោយស្ត្រី។ ឃាតកណាដែលអាណាព្យាបាលនៃជនរងគ្រោះបានអនុគ្រោះ ដោយសុខចិត្តទទួលសំណងជំនួសការដាក់ទោស(អាណាព្យាបាលជនរងគ្រោះ)ត្រូវទារសំណងដោយសមរម្យ។ ឯជនល្មើសត្រូវបំពេញសំណងឱ្យបានគ្រប់ចំនួន។ នេះគឺជាការបន្ធូរបន្ថយនិងជាការអាណិតស្រឡាញ់ពីម្ចាស់របស់ពួកអ្នក។ ហើយអ្នកណារំលោភបំពានបន្ទាប់ពីមានកិច្ចព្រមព្រៀងនេះ អ្នកនោះនឹងត្រូវទទួលទណ្ឌកម្មយ៉ាងឈឺចាប់បំផុត។

وَلَكُمۡ فِي ٱلۡقِصَاصِ حَيَوٰةٞ يَٰٓأُوْلِي ٱلۡأَلۡبَٰبِ
لَعَلَّكُمۡ تَتَّقُونَ ١٧٩

១៧៩-នៅក្នុងការកំណត់សមភាពច្បាប់នៃការកាត់ទោសនោះ គឺដើម្បីឱ្យការរស់នៅប្រកបដោយសុខសន្តិភាពសម្រាប់ពួកអ្នក ឱបញ្ញាជនទាំងឡាយ! សង្ឃឹមថា ពួកអ្នកកោតខ្លាចអល់ឡោះ ។

كُتِبَ عَلَيۡكُمۡ إِذَا حَضَرَ أَحَدَكُمُ ٱلۡمَوۡتُ إِن
تَرَكَ خَيۡرًا ٱلۡوَصِيَّةُ لِلۡوَٰلِدَيۡنِ وَٱلۡأَقۡرَبِينَ
بِٱلۡمَعۡرُوفِۖ حَقًّا عَلَى ٱلۡمُتَّقِينَ ١٨٠

១៨០-គេបានដាក់កាតព្វកិច្ចលើពួកអ្នក កាលណាសេចក្ដីស្លាប់ជិតមកដល់អ្នកណាម្នាក់ក្នុងចំណោមពួកអ្នក ប្រសិនបើអ្នកនោះបានបន្សល់ទុកទ្រព្យសម្បត្តិ ចូរឱ្យគេធ្វើបណ្ដាំមរតក( មួយផ្នែកនៃទ្រព្យសម្បត្តិ) សម្រាប់មាតាបិតា និងញាតិសន្ដានដោយយុត្តិធម៌ ។ នេះជាកាតព្វកិច្ចទៅលើបណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ ។

فَمَنۢ بَدَّلَهُۥ بَعۡدَمَا سَمِعَهُۥ فَإِنَّمَآ إِثۡمُهُۥ عَلَى
ٱلَّذِينَ يُبَدِّلُونَهُۥٓۚ إِنَّ ٱللَّهَ سَمِيعٌ عَلِيمٞ ١٨١

១៨១-ដូច្នេះអ្នកណាបានកែប្រែបណ្ដាំ( របស់សព) ក្រោយពីបានឮបណ្ដាំនោះ ពិតប្រាកដណាស់ទោសកំហុសនេះនឹងធ្លាក់ទៅលើពួកដែលកែប្រែវា ។ ពិតប្រាកដណាស់ អល់ឡោះមហាឮ មហាដឹង ។

فَمَنۡ خَافَ مِن مُّوصٖ جَنَفًا أَوۡ إِثۡمٗا
فَأَصۡلَحَ بَيۡنَهُمۡ فَلَآ إِثۡمَ عَلَيۡهِۚ إِنَّ ٱللَّهَ
غَفُورٞ رَّحِيمٞ ١٨٢

១៨២-អ្នកណាបានដឹងថា អ្នកធ្វើបណ្ដាំមរតកនោះមានការលំអៀង( ដោយភាន់ច្រឡំ) ឬដោយចេតនា រួចក៏បានសម្រុះសម្រួលរវាងភាគីនានា( ដោយកែតម្រូវបណ្ដាំនេះវិញ) ករណីនេះពុំមានទោសកំហុសទៅលើអ្នកនោះឡើយ ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ كُتِبَ عَلَيۡكُمُ ٱلصِّيَامُ
كَمَا كُتِبَ عَلَى ٱلَّذِينَ مِن قَبۡلِكُمۡ لَعَلَّكُمۡ
تَتَّقُونَ ١٨٣

១៨៣-ឱបណ្ដាអ្នកដែលមានជំនឿ! អល់ឡោះបានដាក់កាតព្វកិច្ចបួសមកលើពួកអ្នកដូចដែលទ្រង់បានដាក់កាតព្វកិច្ចទៅលើពួកអ្នកជំនាន់មុនៗដែរ ដើម្បីឱ្យពួកអ្នកកោតខ្លាចអល់ឡោះ ។

أَيَّامٗا مَّعۡدُودَٰتٖۚ فَمَن كَانَ مِنكُم مَّرِيضًا
أَوۡ عَلَىٰ سَفَرٖ فَعِدَّةٞ مِّنۡ أَيَّامٍ أُخَرَۚ وَعَلَى
ٱلَّذِينَ يُطِيقُونَهُۥ فِدۡيَةٞ طَعَامُ مِسۡكِينٖۖ
فَمَن تَطَوَّعَ خَيۡرٗا فَهُوَ خَيۡرٞ لَّهُۥۚ وَأَن تَصُومُواْ
خَيۡرٞ لَّكُمۡ إِن كُنتُمۡ تَعۡلَمُونَ ١٨٤

១៨៤-( ការបួសនេះ) គឺមានចំនួនថ្ងៃដែលគេបានកំណត់ ។ បើអ្នកណាក្នុងចំណោមពួកអ្នកមានជម្ងឺ ឬជាអ្នកធ្វើដំណើរ( អាចផ្អាកបួសបាន) តែត្រូវបួសសងនៅថ្ងៃផ្សេងវិញ( ចំនួនថ្ងៃដែលបានផ្អាកនោះ) ។ រីឯបណ្ដាអ្នកដែលមានការលំបាកក្នុងការបួស( ចាស់ជរា អ្នកមានជម្ងឺធ្ងន់ធ្ងរ) គឺត្រូវផ្ដល់អាហារឱ្យអ្នកក្រីក្រ[1] ជំនួសវិញ ។ អ្នកណាបានស្ម័គ្រចិត្តឱ្យលើសពីចំនួននេះគឺជាការប្រសើរសម្រាប់រូបគេ ។ តែការបួសទាំងលំបាកនោះគឺប្រសើរសម្រាប់ពួកអ្នក

១-រាល់ថ្ងៃដែលគេបានផ្អាកបួសនោះ ត្រូវផ្ដល់អាហារឱ្យអ្នកក្រីក្រម្នាក់ចំនួនមួយមុត( ប្រាំមួយរយក្រាម) ។

ប្រសិនបើពួកអ្នកដឹង។

شَهۡرُ رَمَضَانَ ٱلَّذِيٓ أُنزِلَ فِيهِ ٱلۡقُرۡءَانُ
هُدٗى لِّلنَّاسِ وَبَيِّنَٰتٖ مِّنَ ٱلۡهُدَىٰ
وَٱلۡفُرۡقَانِۚ فَمَن شَهِدَ مِنكُمُ ٱلشَّهۡرَ فَلۡيَصُمۡهُۖ
وَمَن كَانَ مَرِيضًا أَوۡ عَلَىٰ سَفَرٖ فَعِدَّةٞ مِّنۡ
أَيَّامٍ أُخَرَۗ يُرِيدُ ٱللَّهُ بِكُمُ ٱلۡيُسۡرَ وَلَا يُرِيدُ
بِكُمُ ٱلۡعُسۡرَ وَلِتُكۡمِلُواْ ٱلۡعِدَّةَ وَلِتُكَبِّرُواْ
ٱللَّهَ عَلَىٰ مَا هَدَىٰكُمۡ وَلَعَلَّكُمۡ
تَشۡكُرُونَ ١٨٥

១៨៥-ខែរ៉ម៉ាដនជាខែដែលអល់ឡោះបានបញ្ចុះគម្ពីរគួរអាន ដើម្បីណែនាំដល់មនុស្សលោក និងបង្ហាញពីមាគ៌ាដែលត្រឹមត្រូវ ព្រមទាំងវិនិច្ឆ័យរវាងខុសនិងត្រូវ។ ហេតុនេះ អ្នកណាហើយក្នុងចំណោមពួកអ្នកមានវត្តមាននៅក្នុងខែនេះ ចូរឱ្យគេបួស។ ហើយអ្នកណាមានជម្ងឺឬធ្វើដំណើរ( អាចផ្អាកបួសបាន) តែត្រូវបួសសងវិញនៅថ្ងៃផ្សេង( ចំនួនថ្ងៃដែលបានផ្អាកនោះ)។ អល់ឡោះចង់ឱ្យពួកអ្នកងាយស្រួល ហើយអល់ឡោះមិនចង់ឱ្យពួកអ្នកលំបាកនោះទេ។ ហើយចូរពួកអ្នកបួសបង្គ្រប់ចំនួន( ថ្ងៃនៃខែរ៉ម៉ាដន)។ ហើយចូរពួកអ្នកលើកតម្កើងអល់ឡោះ( តឹកហ្បៀរនៅថ្ងៃរ៉យ៉ាហ្វិតរ៉ោះ) ចំពោះអ្វីដែលទ្រង់បានចង្អុលបង្ហាញ ដើម្បីឱ្យពួកអ្នកថ្លែងអំណរគុណ។

وَإِذَا سَأَلَكَ عِبَادِي عَنِّي فَإِنِّي قَرِيبٌۖ أُجِيبُ
دَعۡوَةَ ٱلدَّاعِ إِذَا دَعَانِۖ فَلۡيَسۡتَجِيبُواْ لِي
وَلۡيُؤۡمِنُواْ بِي لَعَلَّهُمۡ يَرۡشُدُونَ ١٨٦

១៨៦-ហើយនៅពេលខ្ញុំរបស់យើងសួរអ្នក( មូហាំម៉ាត់) អំពីយើង ( ចូរអ្នកឆ្លើយថា) ពិតប្រាកដណាស់ យើងនៅជិតបំផុត( ដឹង ឮ ឃើញ ...)។ យើងទទួលយកការបួងសួងសុំរបស់អ្នកដែលទទូចសុំនៅពេលដែលគេបានបួងសួងសុំពីយើង។ ដូច្នោះហើយ ចូរឱ្យពួកគេគោរពប្រតិបត្តិតាមបញ្ជារបស់យើង ហើយចូរឱ្យពួកគេមានជំនឿលើយើង។ សង្ឃឹមថា ពួកគេនឹងទទួលបានការចង្អុលបង្ហាញ។

أُحِلَّ لَكُمۡ لَيۡلَةَ ٱلصِّيَامِ ٱلرَّفَثُ إِلَىٰ
نِسَآئِكُمۡۚ هُنَّ لِبَاسٞ لَّكُمۡ وَأَنتُمۡ لِبَاسٞ لَّهُنَّۗ
عَلِمَ ٱللَّهُ أَنَّكُمۡ كُنتُمۡ تَخۡتَانُونَ
أَنفُسَكُمۡ فَتَابَ عَلَيۡكُمۡ وَعَفَا عَنكُمۡۖ
فَٱلۡـَٰٔنَ بَٰشِرُوهُنَّ وَٱبۡتَغُواْ مَا كَتَبَ ٱللَّهُ
لَكُمۡۚ وَكُلُواْ وَٱشۡرَبُواْ حَتَّىٰ يَتَبَيَّنَ لَكُمُ ٱلۡخَيۡطُ
ٱلۡأَبۡيَضُ مِنَ ٱلۡخَيۡطِ ٱلۡأَسۡوَدِ مِنَ ٱلۡفَجۡرِۖ ثُمَّ
أَتِمُّواْ ٱلصِّيَامَ إِلَى ٱلَّيۡلِۚ وَلَا تُبَٰشِرُوهُنَّ

១៨៧-អល់ឡោះបានអនុញ្ញាតឱ្យពួកអ្នករួមរ័កជាមួយនឹងប្រពន្ធរបស់ពួកអ្នកនៅពេលយប់នៃខែបួស។ ពួកនាង( ប្រពន្ធ) គឺជាសំលៀកបំពាក់សម្រាប់ពួកអ្នក ហើយពួកអ្នក( ប្តី) គឺជាសំលៀកបំពាក់សម្រាប់ពួកនាង។ អល់ឡោះបានដឹងថាៈ ពិតប្រាកដណាស់ ពួកអ្នកបានក្បត់ខ្លួនឯង( រួមរ័កនៅពេលយប់ក្នុងខែបួសដែលពេលមុនអល់ឡោះបានហាមឃាត់)។ បន្ទាប់មកអល់ឡោះបានទទួលយកនូវការសារភាពកំហុសរបស់ពួកអ្នក និងអនុគ្រោះឱ្យពួកអ្នក។ ហើយចាប់ពីពេលនេះតទៅ ចូរពួកអ្នករួមរក័ជាមួយពួកនាង ហើយចូរពួកអ្នកស្វែងរកនូវអ្វី( កូនចៅ) ដែលអល់ឡោះបានកំណត់ឱ្យពួកអ្នក ហើយចូរពួកអ្នកហូប និងផឹករហូតទាល់តែផ្ទៃមេឃមានពន្លឺពណ៌សចេញពីផ្ទៃមេឃពណ៌ខ្មៅងងឹតនៅពេលទៀបភ្លឺ។ បន្ទាប់មក

وَأَنتُمْ عَٰكِفُونَ فِي ٱلْمَسَٰجِدِ ۗ تِلْكَ حُدُودُ
ٱللَّهِ فَلَا تَقْرَبُوهَا ۗ كَذَٰلِكَ يُبَيِّنُ ٱللَّهُ
ءَايَٰتِهِۦ لِلنَّاسِ لَعَلَّهُمْ يَتَّقُونَ ﴿١٨٧﴾

ចូរពួកអ្នកបន្តការបួសរហូតដល់ពេលយប់ ។ ហើយចូរពួកអ្នកកុំរួមរ័កជាមួយប្រពន្ធក្នុងពេលដែលពួកអ្នកកំពុងអៀកទីកាហ្វនៅក្នុងម៉ាស្ជិទ ។ នោះគឺជាការកំណត់( ច្បាប់) របស់អល់ឡោះ ដូច្នេះចូរពួកអ្នកកុំទៅក្បែរ( បំពាន) វា ។ ដូច្នោះហើយ អល់ឡោះបំភ្លឺនូវភស្តុតាងៗរបស់ទ្រង់ទៅកាន់មនុស្សលោក ដើម្បីឱ្យពួកគេកោតខ្លាច ។

وَلَا تَأْكُلُوٓا۟ أَمْوَٰلَكُم بَيْنَكُم بِٱلْبَٰطِلِ وَتُدْلُوا۟
بِهَآ إِلَى ٱلْحُكَّامِ لِتَأْكُلُوا۟ فَرِيقًا مِّنْ أَمْوَٰلِ
ٱلنَّاسِ بِٱلْإِثْمِ وَأَنتُمْ تَعْلَمُونَ ﴿١٨٨﴾

១៨៨-ហើយចូរពួកអ្នកកុំស៊ីទ្រព្យសម្បត្តិគ្នាដោយខុសច្បាប់( សំណូក កេងប្រវ័ញ្ច លួច ប្លន់ ...) ។ ហើយចូរពួកអ្នកកុំផ្តល់សំណូកដល់បណ្តាអ្នកកាន់អំណាច( អ្នកកាត់ក្តី) ដើម្បីពួកអ្នកនឹងបានស៊ីទ្រព្យសម្បត្តិរបស់មនុស្សមួយក្រុមដោយខុសច្បាប់ ខណៈដែលពួកអ្នកដឹង( ថាច្បាប់ហាមឃាត់) ហើយនោះ ។

۞ يَسْـَٔلُونَكَ عَنِ ٱلْأَهِلَّةِ ۖ قُلْ هِيَ مَوَٰقِيتُ
لِلنَّاسِ وَٱلْحَجِّ ۗ وَلَيْسَ ٱلْبِرُّ بِأَن تَأْتُوا۟
ٱلْبُيُوتَ مِن ظُهُورِهَا وَلَٰكِنَّ ٱلْبِرَّ مَنِ
ٱتَّقَىٰ ۗ وَأْتُوا۟ ٱلْبُيُوتَ مِنْ أَبْوَٰبِهَا ۚ وَٱتَّقُوا۟
ٱللَّهَ لَعَلَّكُمْ تُفْلِحُونَ ﴿١٨٩﴾

១៨៩-ពួកគេនឹងសួរអ្នក( មូហាំម៉ាត់) អំពីខ្នើតខែ ។ ចូរអ្នកឆ្លើយថាៈ វាគឺជាការកំណត់ពេលវេលាជាច្រើនសម្រាប់មនុស្សលោក និងការធ្វើហាជ្ជី ។ ហើយពុំមែនជាការល្អទេ ដែលពួកអ្នកចូលលំនៅដ្ឋានពីខាងក្រោយនោះ[1] ក៏ប៉ុន្តែជាការល្អនោះគឺ( អំពើ) អ្នកដែលកោតខ្លាចអល់ឡោះ ។ ហើយចូរពួកអ្នកចូលលំនៅដ្ឋានតាមទ្វារ( ខាងមុខ) របស់វា ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ ដើម្បីពួកអ្នកទទួលបានជោគជ័យ ។

وَقَٰتِلُوا۟ فِي سَبِيلِ ٱللَّهِ ٱلَّذِينَ يُقَٰتِلُونَكُمْ
وَلَا تَعْتَدُوٓا۟ ۚ إِنَّ ٱللَّهَ لَا يُحِبُّ
ٱلْمُعْتَدِينَ ﴿١٩٠﴾

១៩០-ហើយចូរពួកអ្នកធ្វើសង្គ្រាមក្នុងផ្លូវអល់ឡោះប្រឆាំងនឹងពួកដែលធ្វើសង្គ្រាមនឹងពួកអ្នក ហើយពួកអ្នកកុំល្មើសបំពាន( ដូចជាការសម្លាប់ស្ត្រីភេទ កុមារ ចាស់ជរា) ។ ពិតប្រាកដណាស់ អល់ឡោះមិនស្រឡាញ់ពួកដែលល្មើសបំពានឡើយ ។

وَٱقْتُلُوهُمْ حَيْثُ ثَقِفْتُمُوهُمْ وَأَخْرِجُوهُم
مِّنْ حَيْثُ أَخْرَجُوكُمْ ۚ وَٱلْفِتْنَةُ أَشَدُّ مِنَ

១៩១-ហើយចូរពួកអ្នកសម្លាប់ពួកគេ( សត្រូវដែលវាយប្រហារមកលើពួកអ្នក) នៅកន្លែងណាដែលពួកអ្នកបានជួបពួកគេ ហើយបណ្តេញពួកគេចេញពីកន្លែងណាដែលពួកគេបានបណ្តេញពួក

[1]-នៅក្នុងសម័យល្ងង់ខ្លៅនិងសម័យដែលសាសនាអ៊ីស្លាមទើបមកដល់ ពួកគេប្រកាន់ទំនៀមទម្លាប់ចោះជញ្ជាំងចូលលំនៅដ្ឋានពីខាងក្រោយនៅក្នុងពេលកាន់តំណមហាជ្ជី( ពេលអៀសរ៉ម) ដោយមានជំនឿថា ការធ្វើដូច្នេះគឺនាំឱ្យពួកគេខិតជិតទៅចំពោះអល់ឡោះ ។

ٱلۡقَتۡلِۚ وَلَا تُقَٰتِلُوهُمۡ عِندَ ٱلۡمَسۡجِدِ ٱلۡحَرَامِ حَتَّىٰ يُقَٰتِلُوكُمۡ فِيهِۖ فَإِن قَٰتَلُوكُمۡ فَٱقۡتُلُوهُمۡۗ كَذَٰلِكَ جَزَآءُ ٱلۡكَٰفِرِينَ ﴿١٩١﴾

អ្នក(ទីក្រុងម៉ាក្កះ) ។ ហើយហ្វិតណាស់[1] គឺវាធ្ងន់ធ្ងរជាងការកាប់សម្លាប់ទៅទៀត ។ ហើយចូរពួកអ្នកកុំបង្កសង្គ្រាមជាមួយពួកគេនៅឯម៉ាស្ជិទហារ៉ម លុះត្រាតែពួកគេប្រកាសសង្គ្រាមនឹងពួកអ្នកនៅទីនោះមុន ។ ដូច្នោះប្រសិនបើពួកគេបានវាយប្រហារមកលើពួកអ្នកនៅទីនោះ ចូរពួកអ្នកវាយបកទៅលើពួកគេវិញ ។ ការធ្វើដូច្នោះគឺជាការឆ្លើយតបចំពោះពួកដែលប្រឆាំង ។

فَإِنِ ٱنتَهَوۡاْ فَإِنَّ ٱللَّهَ غَفُورٞ رَّحِيمٞ ﴿١٩٢﴾

១៩២-ហើយប្រសិនបើពួកគេបានបញ្ឈប់សង្គ្រាម(បែរមករកជំនឿ) ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَقَٰتِلُوهُمۡ حَتَّىٰ لَا تَكُونَ فِتۡنَةٞ وَيَكُونَ ٱلدِّينُ لِلَّهِۖ فَإِنِ ٱنتَهَوۡاْ فَلَا عُدۡوَٰنَ إِلَّا عَلَى ٱلظَّٰلِمِينَ ﴿١٩٣﴾

១៩៣-ហើយចូរពួកអ្នកបន្តធ្វើសង្គ្រាមជាមួយពួកគេ ទាល់តែលែងមានហ្វិតណាស់ ហើយនៅសល់តែការគោរពសក្ការៈទៅចំពោះអល់ឡោះតែមួយគត់ ។ ហើយប្រសិនបើពួកគេបានបញ្ឈប់សង្គ្រាម គឺគ្មានសត្រូវទៀតទេ លើកលែងតែចំពោះពួកដែលបំពានបុំណ្ណោះ ។

ٱلشَّهۡرُ ٱلۡحَرَامُ بِٱلشَّهۡرِ ٱلۡحَرَامِ وَٱلۡحُرُمَٰتُ قِصَاصٞۚ فَمَنِ ٱعۡتَدَىٰ عَلَيۡكُمۡ فَٱعۡتَدُواْ عَلَيۡهِ بِمِثۡلِ مَا ٱعۡتَدَىٰ عَلَيۡكُمۡۚ وَٱتَّقُواْ ٱللَّهَ وَٱعۡلَمُوٓاْ أَنَّ ٱللَّهَ مَعَ ٱلۡمُتَّقِينَ ﴿١٩٤﴾

១៩៤-ខែបម្រាមសងដោយខែបម្រាម[2] ហើយ(អ្នកដែលបំពានលើ) ប្រការបម្រាមទាំងឡាយ គឺត្រូវកាត់ទោសស្មើៗគ្នា ។ ហេតុនេះ អ្នកណាដែលបានរំលោភបំពានលើពួកអ្នក ចូរពួកអ្នកវាយបកទៅលើគេវិញដូចអ្វីដែលគេបានរំលោភបំពានមកលើពួកអ្នកដែរ ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះនិងជ្រាបថា ពិតប្រាកដណាស់ អល់ឡោះនៅជាមួយបណ្ដាអ្នកដែលកោតខ្លាចទ្រង់ ។

وَأَنفِقُواْ فِي سَبِيلِ ٱللَّهِ وَلَا تُلۡقُواْ بِأَيۡدِيكُمۡ إِلَى ٱلتَّهۡلُكَةِ وَأَحۡسِنُوٓاْۚ إِنَّ ٱللَّهَ يُحِبُّ ٱلۡمُحۡسِنِينَ ﴿١٩٥﴾

១៩៥-ហើយចូរពួកអ្នកចាយវាយ(ទ្រព្យសម្បត្តិ) ក្នុងមាគ៌ារបស់អល់ឡោះ ហើយកុំបណ្ដោយឱ្យខ្លួនរបស់ពួកអ្នកធ្លាក់ទៅក្នុងភាពវិនាសអន្តរាយ(ដោយមិនចំណាយក្នុងមាគ៌ារបស់អល់ឡោះ) ។ ហើយចូរពួកអ្នកធ្វើល្អចុះ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្ដាអ្នកដែលធ្វើល្អ ។

وَأَتِمُّواْ ٱلۡحَجَّ وَٱلۡعُمۡرَةَ لِلَّهِۚ فَإِنۡ أُحۡصِرۡتُمۡ فَمَا

១៩៦-ហើយចូរពួកអ្នកបំពេញកាតព្វកិច្ចហាជ្ជី និងអ៊ុំរ៉ោះដើម្បី

១-ហ្វិតណាស់ : អំពើស្ទីរិក បង្កភាពវឹកវរ... ។

២-ខែបម្រាមគឺជាខែហ្ស៊ុលកក់ដះដែលពួកមូស្ហរីគីនបានហាមអ្នកនាំសារ និងសហាហ្បាត់មិនឱ្យចូលម៉ាក្កះដើម្បីធ្វើអ៊ុំរ៉ោះនៅឆ្នាំទី៦ (ឆ្នាំហ៊ូទៃពីយ៉ះ) ក្រោយមកអល់ឡោះបានប្តូរឱ្យគាត់ធ្វើអ៊ុំរ៉ោះសងវិញនៅខែដដែលនាឆ្នាំក្រោយ ។

ٱسۡتَيۡسَرَ مِنَ ٱلۡهَدۡيِۖ وَلَا تَحۡلِقُواْ رُءُوسَكُمۡ حَتَّىٰ يَبۡلُغَ ٱلۡهَدۡيُ مَحِلَّهُۥۚ فَمَن كَانَ مِنكُم مَّرِيضًا أَوۡ بِهِۦٓ أَذٗى مِّن رَّأۡسِهِۦ فَفِدۡيَةٞ مِّن صِيَامٍ أَوۡ صَدَقَةٍ أَوۡ نُسُكٖۚ فَإِذَآ أَمِنتُمۡ فَمَن تَمَتَّعَ بِٱلۡعُمۡرَةِ إِلَى ٱلۡحَجِّ فَمَا ٱسۡتَيۡسَرَ مِنَ ٱلۡهَدۡيِۚ فَمَن لَّمۡ يَجِدۡ فَصِيَامُ ثَلَٰثَةِ أَيَّامٖ فِي ٱلۡحَجِّ وَسَبۡعَةٍ إِذَا رَجَعۡتُمۡۗ تِلۡكَ عَشَرَةٞ كَامِلَةٞۗ ذَٰلِكَ لِمَن لَّمۡ يَكُنۡ أَهۡلُهُۥ حَاضِرِي ٱلۡمَسۡجِدِ ٱلۡحَرَامِۚ وَٱتَّقُواْ ٱللَّهَ وَٱعۡلَمُوٓاْ أَنَّ ٱللَّهَ شَدِيدُ ٱلۡعِقَابِ ١٩٦

អល់ឡោះ ។ ហើយប្រសិនបើពួកអ្នកត្រូវបានគេរាំងគឺពួកអ្នកត្រូវសំឡេះសត្វជំនូន[1] ណាមួយដែលងាយរក ហើយពួកអ្នកកុំទាន់កោរសក់ លុះត្រាតែសត្វជំនូនទៅដល់កន្លែងរបស់វា( កន្លែងសំឡេះ)[2] សិន ។ រីឯអ្នកណាក្នុងចំណោមពួកអ្នកមានជំងឺ ឬមានអ្វីធ្វើឱ្យឈឺចាប់នៅលើក្បាលរបស់គេ( គេអាចកោរសក់ឬគ្របក្បាលបាន) តែត្រូវទទួលពិន័យដោយការបួស( បីថ្ងៃ) ឬបរិច្ចាគទាន[3] ឬសំឡេះសត្វជំនូន( ពពែមួយក្បាល) ។ ហើយនៅពេលដែលពួកអ្នកមានសុវត្ថិភាព ហើយអ្នកបានធ្វើហាជ្ជីតាម៉ាត់តួក អ្នកនោះត្រូវសំឡេះសត្វជំនូនណាមួយដែលងាយស្រួល ។ តែបើអ្នកណាគ្មានលទ្ធភាពគឺត្រូវបួសរយៈពេលបីថ្ងៃនៅក្នុងខែធ្វើហាជ្ជី និងប្រាំពីរថ្ងៃទៀតនៅពេលដែលពួកអ្នកបានត្រឡប់មកវិញ( មកដល់កន្លែងរបស់ពួកគេ) ទាំងអស់នោះគឺគម្រប់ដប់ថ្ងៃ ។ ការធ្វើដូច្នេះ គឺសម្រាប់អ្នកណាដែលមិនមែនជាអ្នករស់នៅជុំវិញម៉ាស្ជិទហារ៉ម( ម៉ាក្កះ) ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ និងជ្រាបថា ពិតប្រាកដណាស់ អល់ឡោះជាអ្នកធ្វើទណ្ឌកម្មដ៏ធ្ងន់ធ្ងរបំផុត ។

ٱلۡحَجُّ أَشۡهُرٞ مَّعۡلُومَٰتٞۚ فَمَن فَرَضَ فِيهِنَّ ٱلۡحَجَّ فَلَا رَفَثَ وَلَا فُسُوقَ وَلَا جِدَالَ فِي ٱلۡحَجِّۗ وَمَا تَفۡعَلُواْ مِنۡ خَيۡرٖ يَعۡلَمۡهُ ٱللَّهُۗ وَتَزَوَّدُواْ فَإِنَّ خَيۡرَ ٱلزَّادِ ٱلتَّقۡوَىٰۖ وَٱتَّقُونِ يَٰٓأُوْلِي ٱلۡأَلۡبَٰبِ ١٩٧

១៩៧-ពេលវេលាធ្វើហាជ្ជីគឺក្នុងអំឡុងខែដែលត្រូវបានគេដឹងយ៉ាងច្បាស់[4] ។ ហើយអ្នកណាដែលបានបំពេញកាតព្វកិច្ចហាជ្ជីក្នុងអំឡុងខែទាំងនេះ គេមិនត្រូវរួមភេទ[5] និងមិនត្រូវល្មើសនឹងបទបញ្ញាផ្សេងៗរបស់អល់ឡោះ ហើយមិនត្រូវឈ្លោះប្រកែកគ្នាក្នុងពេលកំពុងធ្វើហាជ្ជីឡើយ ។ ហើយអំពើល្អណាមួយដែលពួកអ្នកសាងគឺអល់ឡោះដឹងទាំងអស់ ។ ហើយចូរពួកអ្នកនាំស្បៀងអាហារទៅជាមួយផង ជាការពិតណាស់ស្បៀងដ៏ល្អបំផុតនោះគឺការកោត

---

១-នៅពេលដែលមានឧបសគ្គរារាំងពួកអ្នកអំពីការបំពេញកាតព្វហាជ្ជីឬអ៊ុំរ៉ោះ ពួកអ្នកត្រូវសំឡេះសត្វមួយក្បាលដែលងាយរកដូចជាសត្វអូដ្ឋ គោ ពពែ ចៀម ដើម្បីអាចកោរសក់រំសាយការបំពេញហាជ្ជីឬអ៊ុំរ៉ោះ ។

២-ចំពោះអ្នកដែលត្រូវគេរារាំងត្រូវសំឡេះសត្វជំនូននៅកន្លែងនោះតែម្តង ដោយឡែកចំពោះអ្នកគ្មានអ្វីមករារាំងនោះត្រូវសំឡេះសត្វជំនូននៅកន្លែងហារ៉មអំឡុងថ្ងៃដែលច្បាប់បានកំណត់ ពោលគឺថ្ងៃទីដប់ ដប់មួយ ដប់ពីរ ឬដប់បីនៃខែហ្ស៊ុលហ៊ីជ្ជះ ។

៣-បរិច្ចាគអាហារសម្រាប់មនុស្សចំនួនប្រាំមួយនាក់ ដោយក្នុងម្នាក់ៗប្រហែលជា១.២គក ។

៤-ខែស្ហាវវ៉ាល ខែហ្ស៊ុលកក់ដះ និងដប់ថ្ងៃដំបូងនៃខែហ្ស៊ុលហ៊ីជ្ជះ ។

៥-ការរួមភេទត្រូវបានគេហាមឃាត់នៅពេលចាប់ផ្តើមស្លៀកពាក់អៀសរ៉មតាំងចិត្តធ្វើហាជ្ជីរហូតដល់បញ្ចប់កិច្ចការធ្វើហាជ្ជី ។

ខ្លាចអល់ឡោះ ។ ហើយចូរពួកអ្នកកោតខ្លាចយើង ឱបញ្ញាជនទាំងឡាយ!

១៩៨-ពួកអ្នកគ្មានទោសពៃរ៍អ្វីឡើយដែលពួកអ្នកស្វែងរកលាភសក្ការៈ( តាមរយៈជំនួញក្នុងពេលដែលពួកអ្នកធ្វើហាជ្ជី) ពីម្ចាស់របស់ពួកអ្នក ។ ហើយនៅពេលដែលពួកអ្នកវិលត្រឡប់ពីអារ៉ហ្វះ[១] វិញ ចូរពួកអ្នករំលឹក[២] ទៅចំពោះអល់ឡោះនៅឯម៉ាស្ហ-អារីលហារ៉ម[៣] ។ ហើយចូរពួកអ្នករំលឹកទៅចំពោះទ្រង់ដូចអ្វីដែលទ្រង់បានចង្អុលបង្ហាញដល់ពួកអ្នក ហើយពួកអ្នកកាលពីមុនពិតជាស្ថិតនៅក្នុងចំណោមពួកដែលវង្វេង ។

១៩៩-បន្ទាប់មកចូរពួកអ្នកចាកចេញពីកន្លែង( អារ៉ហ្វះ) ដែលមនុស្សម្នាបានចាកចេញនោះ ហើយចូរទទូចសុំការលើកលែងទោសពីអល់ឡោះចុះ ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោសមហាអាណិតស្រឡាញ់ ។

២០០-ហើយនៅពេលដែលពួកអ្នកបានបញ្ចប់កិច្ចការហាជ្ជីសព្វគ្រប់ ចូរពួកអ្នករំលឹកទៅចំពោះអល់ឡោះប្រៀបដូចជាការរំលឹករបស់ពួកអ្នកចំពោះជីដូនជីតារបស់ពួកអ្នក ឬរំលឹកឱ្យលើសពីនេះ ។ ហើយក្នុងចំណោមមនុស្សលោកមានអ្នកបួងសួងសុំថាៈ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាប្រទានឱ្យពួកយើង( មានសុខភាពល្អ ទ្រព្យសម្បត្តិ និងកូនចៅ..) នៅក្នុងលោកិយនេះផង ។ ប៉ុន្តែនៅថ្ងៃបរលោកគេមិនទទួលបានផលអ្វីឡើយ ។

២០១-ហើយក្នុងចំណោមពួកគេមានអ្នកបួងសួងសុំថាៈ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាប្រទានដល់ពួកយើងនូវប្រការល្អ( សុខភាព ជីវភាពធូរធារ ចំណេះដឹង...) នៅក្នុងលោកិយនេះ និងប្រការល្អ( ឋានសួគ៌) នាថ្ងៃបរលោក ហើយសូមរក្សាការពារពួកយើងពីទារុណកម្មនៃភ្លើងនរកផង ។

لَيۡسَ عَلَيۡكُمۡ جُنَاحٌ أَن تَبۡتَغُواْ فَضۡلٗا مِّن رَّبِّكُمۡۚ فَإِذَآ أَفَضۡتُم مِّنۡ عَرَفَٰتٖ فَٱذۡكُرُواْ ٱللَّهَ عِندَ ٱلۡمَشۡعَرِ ٱلۡحَرَامِۖ وَٱذۡكُرُوهُ كَمَا هَدَىٰكُمۡ وَإِن كُنتُم مِّن قَبۡلِهِۦ لَمِنَ ٱلضَّآلِّينَ ١٩٨

ثُمَّ أَفِيضُواْ مِنۡ حَيۡثُ أَفَاضَ ٱلنَّاسُ وَٱسۡتَغۡفِرُواْ ٱللَّهَۚ إِنَّ ٱللَّهَ غَفُورٞ رَّحِيمٞ ١٩٩

فَإِذَا قَضَيۡتُم مَّنَٰسِكَكُمۡ فَٱذۡكُرُواْ ٱللَّهَ كَذِكۡرِكُمۡ ءَابَآءَكُمۡ أَوۡ أَشَدَّ ذِكۡرٗاۗ فَمِنَ ٱلنَّاسِ مَن يَقُولُ رَبَّنَآ ءَاتِنَا فِي ٱلدُّنۡيَا وَمَا لَهُۥ فِي ٱلۡأٓخِرَةِ مِنۡ خَلَٰقٖ ٢٠٠

وَمِنۡهُم مَّن يَقُولُ رَبَّنَآ ءَاتِنَا فِي ٱلدُّنۡيَا حَسَنَةٗ وَفِي ٱلۡأٓخِرَةِ حَسَنَةٗ وَقِنَا عَذَابَ ٱلنَّارِ ٢٠١

១-អារ៉ហ្វះ : គឺជាកន្លែងពិសិដ្ឋមួយនៅម៉ាក្កះដែលតម្រូវឱ្យអ្នកធ្វើហាជ្ជីទាំងអស់ស្នាក់នៅនាថ្ងៃទីប្រាំបួនខែហ្ស៊ុលហ៊ីជ្ជះ ។
២-រំលឹក : ពាក្យថារំលឹកនៅវាក្យខណ្ឌនេះ មានន័យថាៈ ថ្វាយបង្គំ បួងសួង និងការសូត្រធមិនឹកដល់អល់ឡោះ ។
៣-ម៉ាស្ហអារីលហារ៉ម : គឺជាឈ្មោះទីកន្លែងមួយនៅតំបន់មុហ្សទើលីហ្វះ ដែលនៅចន្លោះអារ៉ហ្វះនិងមីណា ។

២០២-អ្នកទាំងនោះនឹងទទួលបានផលល្អពីអ្វីដែលពួកគេបានសាង ។ ហើយអល់ឡោះជាអ្នកកាត់សេចក្ដីយ៉ាងរហ័សបំផុត ។

أُوْلَٰٓئِكَ لَهُمْ نَصِيبٌ مِّمَّا كَسَبُواْۚ وَٱللَّهُ سَرِيعُ
ٱلْحِسَابِ ﴿٢٠٢﴾

២០៣-ហើយចូរពួកអ្នករំលឹកទៅចំពោះអល់ឡោះក្នុងចំនួនថ្ងៃដែលបានកំណត់[1] ដូច្នេះអ្នកណាចង់ប្រញាប់(ចាកចេញពីមីណា) ក្នុងរយៈពេលពីរថ្ងៃដំបូង(នៃថ្ងៃតាស្ហរិក) គឺគ្មានទោសកំហុសចំពោះគេឡើយ ។ ចំណែកឯអ្នកណាដែលចង់ពន្យារពេល(រហូតដល់ថ្ងៃទីដប់បី) នោះ ក៏គ្មានទោសកំហុសដែរសម្រាប់អ្នកដែលកោតខ្លាចអល់ឡោះ ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ និងត្រូវដឹងថា: ពិតប្រាកដណាស់ ពួកអ្នកនឹងត្រូវគេប្រមូលផ្តុំទៅចំពោះទ្រង់វិញ ។

۞ وَٱذْكُرُواْ ٱللَّهَ فِيٓ أَيَّامٍ مَّعْدُودَٰتٍۚ فَمَن
تَعَجَّلَ فِي يَوْمَيْنِ فَلَآ إِثْمَ عَلَيْهِ وَمَن تَأَخَّرَ
فَلَآ إِثْمَ عَلَيْهِۚ لِمَنِ ٱتَّقَىٰۗ وَٱتَّقُواْ ٱللَّهَ
وَٱعْلَمُوٓاْ أَنَّكُمْ إِلَيْهِ تُحْشَرُونَ ﴿٢٠٣﴾

២០៤-ហើយក្នុងចំណោមមនុស្សលោកមានអ្នកដែលពាក្យសំដីរបស់គេធ្វើឱ្យអ្នក(មូហាំម៉ាត់) ចាប់អារម្មណ៍នៅក្នុងការរស់នៅលើលោកិយនេះ ហើយគេស្បថនឹងអល់ឡោះ(សំដែងការស្មោះត្រង់) អំពីអ្វីដែលមាននៅក្នុងចិត្តរបស់គេ ។ ប៉ុន្តែគេគឺជាសត្រូវដ៏ខ្លាំងក្លាបំផុត ។

وَمِنَ ٱلنَّاسِ مَن يُعْجِبُكَ قَوْلُهُۥ فِي ٱلْحَيَوٰةِ
ٱلدُّنْيَا وَيُشْهِدُ ٱللَّهَ عَلَىٰ مَا فِي قَلْبِهِۦ وَهُوَ أَلَدُّ
ٱلْخِصَامِ ﴿٢٠٤﴾

២០៥-ហើយនៅពេលដែលគេត្រឡប់ចេញទៅ គេតែងតែដើរនៅលើផែនដីនេះដើម្បីបង្កវិនាសកម្មនិងបំផ្លិចបំផ្លាញផលដំណាំនិងសត្វពាហនៈ ។ ហើយអល់ឡោះមិនស្រឡាញ់អំពើវិនាសកម្មឡើយ ។

وَإِذَا تَوَلَّىٰ سَعَىٰ فِي ٱلْأَرْضِ لِيُفْسِدَ فِيهَا
وَيُهْلِكَ ٱلْحَرْثَ وَٱلنَّسْلَۗ وَٱللَّهُ لَا يُحِبُّ
ٱلْفَسَادَ ﴿٢٠٥﴾

២០៦-ហើយនៅពេលដែលមានគេនិយាយទៅកាន់អ្នកនោះថា: ចូរអ្នកកោតខ្លាចអល់ឡោះ បែរជាភាពក្រអឺតក្រទមបានអូសទាញគេឱ្យសាងបាបកម្មកាន់តែខ្លាំងទៅវិញ ។ ដូច្នេះ នរកជើហាន់ណាំគឺគ្រប់គ្រាន់សម្រាប់គេ ហើយវាជាកន្លែងដ៏អាក្រក់បំផុត ។

وَإِذَا قِيلَ لَهُ ٱتَّقِ ٱللَّهَ أَخَذَتْهُ ٱلْعِزَّةُ بِٱلْإِثْمِۚ
فَحَسْبُهُۥ جَهَنَّمُۚ وَلَبِئْسَ ٱلْمِهَادُ ﴿٢٠٦﴾

២០៧-ហើយក្នុងចំណោមមនុស្សលោកមានអ្នកដែលលក់(លះបង់) ខ្លួនគេដើម្បីស្វែងរកការយល់ព្រមពីអល់ឡោះ ។ ហើយអល់ឡោះគឺពោរពេញទៅដោយការអាណិតស្រឡាញ់ចំពោះខ្ញុំរបស់ទ្រង់ ។

وَمِنَ ٱلنَّاسِ مَن يَشْرِي نَفْسَهُ ٱبْتِغَآءَ
مَرْضَاتِ ٱللَّهِۗ وَٱللَّهُ رَءُوفٌۢ بِٱلْعِبَادِ ﴿٢٠٧﴾

---

១-ថ្ងៃកំណត់ : ថ្ងៃតាស្ហរិក គឺថ្ងៃទីដប់មួយ ដប់ពីរ និងដប់បីនៃខែហ៊្ស៊ុលហ៊ិជ្ជះ ។

២០៨-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកចូលសាសនាអ៊ីស្លាមដោយពិតប្រាកដ ហើយចូរពួកអ្នកកុំធ្វើតាមមាគ៌ារបស់ស្ហៃតនឱ្យសោះ។ ពិតប្រាកដណាស់ វាគឺជាសត្រូវរបស់ពួកអ្នកយ៉ាងច្បាស់លាស់។

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ ٱدْخُلُوا۟ فِى ٱلسِّلْمِ كَآفَّةً وَلَا تَتَّبِعُوا۟ خُطُوَٰتِ ٱلشَّيْطَـٰنِ ۚ إِنَّهُۥ لَكُمْ عَدُوٌّ مُّبِينٌ ﴿٢٠٨﴾

២០៩-ហើយប្រសិនបើពួកអ្នកងាកចេញក្រោយពីភស្តុតាងយ៉ាងច្បាស់លាស់(មូហាំម៉ាត់ គម្ពីរគួរអាន) បានមកដល់ពួកអ្នក ពួកអ្នកត្រូវដឹងថាៈ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

فَإِن زَلَلْتُم مِّنۢ بَعْدِ مَا جَآءَتْكُمُ ٱلْبَيِّنَـٰتُ فَٱعْلَمُوٓا۟ أَنَّ ٱللَّهَ عَزِيزٌ حَكِيمٌ ﴿٢٠٩﴾

២១០-ពួកគេមិនរង់ចាំអ្វីក្រៅពីអល់ឡោះ និងម៉ាឡាអ៊ីកាត់មកដល់ពួកគេក្នុងស្រមោលពពកឡើយ។ ហើយរឿងរ៉ាវនោះត្រូវបានគេកាត់សេចក្ដី។ ហើយរឿងរ៉ាវទាំងឡាយត្រូវវិលត្រឡប់ទៅកាន់អល់ឡោះវិញ។

هَلْ يَنظُرُونَ إِلَّآ أَن يَأْتِيَهُمُ ٱللَّهُ فِى ظُلَلٍ مِّنَ ٱلْغَمَامِ وَٱلْمَلَـٰٓئِكَةُ وَقُضِىَ ٱلْأَمْرُ ۚ وَإِلَى ٱللَّهِ تُرْجَعُ ٱلْأُمُورُ ﴿٢١٠﴾

២១១-ចូរអ្នក(មូហាំម៉ាត់) សួរអំបូរអ៊ីស្រាអែលថាៈ តើមានភស្តុតាងបញ្ជាក់ច្បាស់ប៉ុន្មានហើយដែលយើងបានផ្ដល់ឱ្យពួកគេនោះ? ហើយអ្នកណាប្ដូរនៀកម៉ាត់(សាសនា) របស់អល់ឡោះបន្ទាប់ពីវាបានមកដល់គេហើយនោះ ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកធ្វើទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។

سَلْ بَنِىٓ إِسْرَٰٓءِيلَ كَمْ ءَاتَيْنَـٰهُم مِّنْ ءَايَةٍۭ بَيِّنَةٍ ۗ وَمَن يُبَدِّلْ نِعْمَةَ ٱللَّهِ مِنۢ بَعْدِ مَا جَآءَتْهُ فَإِنَّ ٱللَّهَ شَدِيدُ ٱلْعِقَابِ ﴿٢١١﴾

២១២-គេបានលំអជីវិតលោកិយនេះសម្រាប់ពួកដែលប្រឆាំង។ ហើយពួកគេតែងតែចំអកឱ្យបណ្ដាអ្នកមានជំនឿ។ តែបណ្ដាអ្នកកោតខ្លាចអល់ឡោះខ្ពង់ខ្ពស់ជាងពួកគេនៅថ្ងៃបរលោក។ ហើយអល់ឡោះនឹងផ្ដល់លាភសក្ការៈដល់អ្នកណាដែលទ្រង់មានចេតនាដោយឥតគណនាឡើយ។

زُيِّنَ لِلَّذِينَ كَفَرُوا۟ ٱلْحَيَوٰةُ ٱلدُّنْيَا وَيَسْخَرُونَ مِنَ ٱلَّذِينَ ءَامَنُوا۟ ۘ وَٱلَّذِينَ ٱتَّقَوْا۟ فَوْقَهُمْ يَوْمَ ٱلْقِيَـٰمَةِ ۗ وَٱللَّهُ يَرْزُقُ مَن يَشَآءُ بِغَيْرِ حِسَابٍ ﴿٢١٢﴾

២១៣-កាលដើមឡើយមនុស្សលោកជាប្រជាជាតិតែមួយ[1]។ ហេតុនេះអល់ឡោះបានចាត់តាំងណាពីជាច្រើន ជាអ្នកផ្ដល់ដំណឹងរីករាយ និងដាស់តឿនព្រមាន។ ហើយទ្រង់បានបញ្ចុះគម្ពីរយ៉ាងពិតប្រាកដជាមួយនឹងពួកគេ ដើម្បីឱ្យពួកគេកាត់សេចក្ដីរវាងមនុស្ស

كَانَ ٱلنَّاسُ أُمَّةً وَٰحِدَةً فَبَعَثَ ٱللَّهُ ٱلنَّبِيِّـۧنَ مُبَشِّرِينَ وَمُنذِرِينَ وَأَنزَلَ مَعَهُمُ ٱلْكِتَـٰبَ بِٱلْحَقِّ لِيَحْكُمَ بَيْنَ ٱلنَّاسِ فِيمَا ٱخْتَلَفُوا۟

---

១-មានជំនឿលើសាសនារបស់អល់ឡោះតែមួយ តែក្រោយមកពួកគេបែកបាក់គ្នា។

لوកនូវអ្វីដែលពួកគេខ្វែងគំនិតគ្នា។ ហើយគ្មានអ្នកខ្វែងគំនិតគ្នានៅក្នុងគម្ពីរនោះទេ គឺមានតែពួកដែលអល់ឡោះបានផ្ដល់គម្ពីរ(តាវ៉ារ៉ត)ឱ្យពួកគេបន្ទាប់ពីភស្តុតាងជាច្រើនបានមកដល់ពួកគេ ដោយសារតែការឈ្នានីសរវាងពួកគេប៉ុណ្ណោះ។ តែអល់ឡោះបានចង្អុលបង្ហាញដល់បណ្ដាអ្នកដែលមានជំនឿនូវការពិតក្នុងរឿងដែលពួកគេបានខ្វែងគំនិតគ្នាដោយការអនុញ្ញាតរបស់ទ្រង់។ ហើយអល់ឡោះនឹងចង្អុលបង្ហាញមាគ៌ាដ៏ត្រឹមត្រូវចំពោះអ្នកណាដែលទ្រង់មានចេតនា។

فِيهِۚ وَمَا ٱخۡتَلَفَ فِيهِ إِلَّا ٱلَّذِينَ أُوتُوهُ مِنۢ بَعۡدِ مَا جَآءَتۡهُمُ ٱلۡبَيِّنَٰتُ بَغۡيَۢا بَيۡنَهُمۡۖ فَهَدَى ٱللَّهُ ٱلَّذِينَ ءَامَنُواْ لِمَا ٱخۡتَلَفُواْ فِيهِ مِنَ ٱلۡحَقِّ بِإِذۡنِهِۦۗ وَٱللَّهُ يَهۡدِي مَن يَشَآءُ إِلَىٰ صِرَٰطٖ مُّسۡتَقِيمٍ ﴿٢١٣﴾

២១៤-តើពួកអ្នក(អ្នកមានជំនឿ)គិតថានឹងចូលឋានសួគ៌ដោយមិនទាន់(មានការសាកល្បង)មកដល់ពួកអ្នក ដូចបណ្ដាអ្នកដែលបានកន្លងផុតទៅមុនពួកអ្នកនោះឬ? ពួកគេបានជួបប្រទះគ្រោះអត់ឃ្លាន និងជំងឺព្រមទាំងរំជួលចិត្ត ដោយការភ័យខ្លាច សូម្បីតែអ្នកនាំសារនិងអ្នកដែលរួមជំនឿជាមួយគាត់ក៏លាន់មាត់ថា: ពេលណាទើបជំនួយរបស់អល់ឡោះនឹងមកដល់? ចូរជ្រាបថា: ពិតប្រាកដណាស់ ជំនួយរបស់អល់ឡោះនៅជិតបង្កើយ។

أَمۡ حَسِبۡتُمۡ أَن تَدۡخُلُواْ ٱلۡجَنَّةَ وَلَمَّا يَأۡتِكُم مَّثَلُ ٱلَّذِينَ خَلَوۡاْ مِن قَبۡلِكُمۖ مَّسَّتۡهُمُ ٱلۡبَأۡسَآءُ وَٱلضَّرَّآءُ وَزُلۡزِلُواْ حَتَّىٰ يَقُولَ ٱلرَّسُولُ وَٱلَّذِينَ ءَامَنُواْ مَعَهُۥ مَتَىٰ نَصۡرُ ٱللَّهِۗ أَلَآ إِنَّ نَصۡرَ ٱللَّهِ قَرِيبٞ ﴿٢١٤﴾

២១៥-ពួកគេនឹងសួរអ្នក(មូហាំម៉ាត់)ថា: តើអ្វីខ្លះដែលពួកគេត្រូវបរិច្ចាគ? ចូរអ្នកឆ្លើយថា: អ្វីដែលពួកអ្នកបានបរិច្ចាគតាមផ្លូវល្អនោះ គឺសម្រាប់ឪពុកម្ដាយនិងញាតិសន្ដាន និងកូនកំព្រា និងអ្នកក្រីក្រព្រមទាំងអ្នកដំណើរដែលដាច់ស្បៀង។ ហើយអ្វីដែលពួកអ្នកសាងអំពីប្រការល្អនោះ អល់ឡោះពិតជាដឹងបំផុតចំពោះវា។

يَسۡـَٔلُونَكَ مَاذَا يُنفِقُونَۖ قُلۡ مَآ أَنفَقۡتُم مِّنۡ خَيۡرٖ فَلِلۡوَٰلِدَيۡنِ وَٱلۡأَقۡرَبِينَ وَٱلۡيَتَٰمَىٰ وَٱلۡمَسَٰكِينِ وَٱبۡنِ ٱلسَّبِيلِۗ وَمَا تَفۡعَلُواْ مِنۡ خَيۡرٖ فَإِنَّ ٱللَّهَ بِهِۦ عَلِيمٞ ﴿٢١٥﴾

២១៦-អល់ឡោះបានដាក់កាតព្វកិច្ចលើពួកអ្នកឱ្យធ្វើសង្គ្រាម ដោយវាជាប្រការដែលមិនពេញចិត្តសម្រាប់ពួកអ្នក។ ហើយជួនកាលអ្វីដែលពួកអ្នកមិនពេញចិត្តនោះ វាអាចជាប្រការល្អសម្រាប់ពួកអ្នក ហើយអ្វីដែលពួកអ្នកចូលចិត្តនោះ វាអាចជាប្រការអាក្រក់សម្រាប់ពួកអ្នកទៅវិញទេ។ ហើយអល់ឡោះទេដែលដឹង តែពួកអ្នកមិនដឹងឡើយ។

كُتِبَ عَلَيۡكُمُ ٱلۡقِتَالُ وَهُوَ كُرۡهٞ لَّكُمۡۖ وَعَسَىٰٓ أَن تَكۡرَهُواْ شَيۡـٔٗا وَهُوَ خَيۡرٞ لَّكُمۡۖ وَعَسَىٰٓ أَن تُحِبُّواْ شَيۡـٔٗا وَهُوَ شَرّٞ لَّكُمۡۚ وَٱللَّهُ يَعۡلَمُ وَأَنتُمۡ لَا تَعۡلَمُونَ ﴿٢١٦﴾

២១៧-ពួកគេ(ពួកមូស្ហ៊ីរីគីន)នឹងសួរអ្នក(មូហាំម៉ាត់)អំពីការធ្វើសង្គ្រាមនៅក្នុងខែហាមឃាត់។ ចូរអ្នកឆ្លើយថា: ការធ្វើសង្គ្រាមនៅ

يَسۡـَٔلُونَكَ عَنِ ٱلشَّهۡرِ ٱلۡحَرَامِ قِتَالٖ فِيهِۖ قُلۡ قِتَالٞ فِيهِ كَبِيرٞۖ وَصَدٌّ عَن سَبِيلِ ٱللَّهِ وَكُفۡرُۢ

ក្នុងខែនោះ គឺមានបាបកម្មធ្ងន់ធ្ងរបំផុត ហើយបាបកម្មដែលធ្ងន់ធ្ងរជាងនេះទៅទៀតចំពោះអល់ឡោះនោះ គឺការរារាំងអ្នកដទៃអំពីមាគ៌ារបស់អល់ឡោះ និងការប្រឆាំងនឹងទ្រង់ និងការរារាំង( អ្នកមានជំនឿ ) មិនឱ្យចូលម៉ាស្ជិទហារ៉មនិងបណ្តេញអ្នកដែលរស់នៅទីនោះចេញពីលំនៅដ្ឋាន ។ ហើយការបង្កភាពវឹកវរគឺវាធ្ងន់ធ្ងរជាងការកាប់សម្លាប់គ្នាទៅទៀត ។ ហើយពួកគេនៅតែបន្តធ្វើសង្គ្រាមប្រឆាំងជាមួយពួកអ្នក រហូតទាល់តែពួកគេអាចបង្វែរពួកអ្នកចេញពីសាសនារបស់ពួកអ្នក ប្រសិនបើពួកគេមានលទ្ធភាព ។ ហើយអ្នកណាក្នុងចំណោមពួកអ្នកចាកចេញពីសាសនា( អ៊ិស្លាម ) របស់គេ បន្ទាប់មកគេក៏ស្លាប់ក្នុងភាពជាអ្នកដែលគ្មានជំនឿ គឺពួកទាំងនោះហើយដែលអំពើល្អទាំងឡាយរបស់ពួកគេត្រូវបានរលាយសាបសូន្យទាំងក្នុងលោកិយនិងបរលោក ។ ហើយពួកទាំងនោះជាពួកនរក ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។

بِهِۦ وَٱلۡمَسۡجِدِ ٱلۡحَرَامِ وَإِخۡرَاجُ أَهۡلِهِۦ مِنۡهُ
أَكۡبَرُ عِندَ ٱللَّهِۚ وَٱلۡفِتۡنَةُ أَكۡبَرُ مِنَ ٱلۡقَتۡلِۗ
وَلَا يَزَالُونَ يُقَٰتِلُونَكُمۡ حَتَّىٰ يَرُدُّوكُمۡ عَن
دِينِكُمۡ إِنِ ٱسۡتَطَٰعُواْۚ وَمَن يَرۡتَدِدۡ مِنكُمۡ
عَن دِينِهِۦ فَيَمُتۡ وَهُوَ كَافِرٞ فَأُوْلَٰٓئِكَ
حَبِطَتۡ أَعۡمَٰلُهُمۡ فِي ٱلدُّنۡيَا وَٱلۡأٓخِرَةِۖ
وَأُوْلَٰٓئِكَ أَصۡحَٰبُ ٱلنَّارِۖ هُمۡ فِيهَا
خَٰلِدُونَ ٢١٧

២១៨-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿ និងបណ្តាអ្នកដែលបានភៀសខ្លួន ព្រមទាំងបណ្តាអ្នកដែលបានតស៊ូក្នុងមាគ៌ារបស់អល់ឡោះ ពួកទាំងនោះហើយដែលសង្ឃឹមនូវការអាណិតស្រឡាញ់របស់អល់ឡោះ ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

إِنَّ ٱلَّذِينَ ءَامَنُواْ وَٱلَّذِينَ هَاجَرُواْ
وَجَٰهَدُواْ فِي سَبِيلِ ٱللَّهِ أُوْلَٰٓئِكَ يَرۡجُونَ
رَحۡمَتَ ٱللَّهِۚ وَٱللَّهُ غَفُورٞ رَّحِيمٞ ٢١٨

២១៩-ពួកគេនឹងសួរអ្នក( មូហាំម៉ាត់ ) អំពីសុរា និងល្បែងស៊ីសង ។ ចូរអ្នកឆ្លើយថា: វាទាំងពីរនេះគឺមានបាបកម្មធំ តែក៏មានផលប្រយោជន៍ខ្លះដល់មនុស្សលោកដែរ ។ ប៉ុន្តែបាបកម្មរបស់វាទាំងពីរគឺធ្ងន់ធ្ងរជាងគុណប្រយោជន៍របស់វាទាំងពីរទៅទៀត ។ ហើយពួកគេនឹងសួរអ្នកទៀតថា: តើអ្វីខ្លះដែលពួកគេត្រូវបរិច្ចាគ? ចូរអ្នកឆ្លើយថា: គឺទ្រព្យដែលលើសពីតំរូវការ ។ ដូច្នោះដែរ អល់ឡោះបញ្ជាក់យ៉ាងច្បាស់នូវច្បាប់ទាំងឡាយសម្រាប់ពួកអ្នកដើម្បីឱ្យពួកអ្នកគិតពិចារណា ។

۞ يَسۡـَٔلُونَكَ عَنِ ٱلۡخَمۡرِ وَٱلۡمَيۡسِرِۖ قُلۡ
فِيهِمَآ إِثۡمٞ كَبِيرٞ وَمَنَٰفِعُ لِلنَّاسِ وَإِثۡمُهُمَآ
أَكۡبَرُ مِن نَّفۡعِهِمَاۗ وَيَسۡـَٔلُونَكَ مَاذَا
يُنفِقُونَ قُلِ ٱلۡعَفۡوَۗ كَذَٰلِكَ يُبَيِّنُ ٱللَّهُ لَكُمُ
ٱلۡأٓيَٰتِ لَعَلَّكُمۡ تَتَفَكَّرُونَ ٢١٩

២២០-ទាំងក្នុងលោកិយនិងបរលោក ។ ហើយពួកគេនឹងសួរអ្នក( មូហាំម៉ាត់ ) អំពីរឿងកូនកំព្រា ។ ចូរអ្នកឆ្លើយថា: ការថែរក្សាទ្រព្យសម្បត្តិរបស់ពួកគេគឺជាការប្រសើរបំផុត ។ ហើយប្រសិនបើ

فِي ٱلدُّنۡيَا وَٱلۡأٓخِرَةِۗ وَيَسۡـَٔلُونَكَ عَنِ ٱلۡيَتَٰمَىٰۖ
قُلۡ إِصۡلَاحٞ لَّهُمۡ خَيۡرٞۖ وَإِن تُخَالِطُوهُمۡ

فَإِخْوَٰنُكُمْۚ وَٱللَّهُ يَعْلَمُ ٱلْمُفْسِدَ مِنَ
ٱلْمُصْلِحِۚ وَلَوْ شَآءَ ٱللَّهُ لَأَعْنَتَكُمْۚ إِنَّ ٱللَّهَ
عَزِيزٌ حَكِيمٌ ٢٢٠

ពួកអ្នកនៅលាយឡំជាមួយពួកគេ ពួកគេគឺជាបងប្អូនរបស់ពួកអ្នក។ ហើយអល់ឡោះដឹងចំពោះអ្នកដែលធ្វើអាក្រក់( ស៊ីទ្រព្យសម្បត្តិកូនកំព្រា) និងអ្នកដែលធ្វើល្អ( ថែរក្សាទ្រព្យសម្បត្តិកូនកំព្រា) ។ ហើយប្រសិនបើអល់ឡោះមានចេតនា ទ្រង់ប្រាកដជានឹងធ្វើឱ្យពួកអ្នកមានផលវិបាកយ៉ាងខ្លាំង។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

وَلَا تَنكِحُواْ ٱلْمُشْرِكَٰتِ حَتَّىٰ يُؤْمِنَّۚ وَلَأَمَةٌ
مُّؤْمِنَةٌ خَيْرٌ مِّن مُّشْرِكَةٍ وَلَوْ أَعْجَبَتْكُمْۗ وَلَا
تُنكِحُواْ ٱلْمُشْرِكِينَ حَتَّىٰ يُؤْمِنُواْۚ وَلَعَبْدٌ
مُّؤْمِنٌ خَيْرٌ مِّن مُّشْرِكٍ وَلَوْ أَعْجَبَكُمْۗ أُوْلَٰٓئِكَ
يَدْعُونَ إِلَى ٱلنَّارِۖ وَٱللَّهُ يَدْعُوٓاْ إِلَى ٱلْجَنَّةِ
وَٱلْمَغْفِرَةِ بِإِذْنِهِۦۖ وَيُبَيِّنُ ءَايَٰتِهِۦ لِلنَّاسِ
لَعَلَّهُمْ يَتَذَكَّرُونَ ٢٢١

២២១-ហើយចូរពួកអ្នកកុំរៀបអាពាហ៍ពិពាហ៍ជាមួយពួកស្ត្រីមូស្ហរីគីន[១] ឱ្យសោះ លុះត្រាតែពួកនាងមានជំនឿ។ ហើយពិតប្រាកដណាស់ ទាសីដែលមានជំនឿនោះប្រសើរជាងស្ត្រីមូស្ហរីគីនទៅទៀត ទោះបីជានាងធ្វើឱ្យពួកអ្នកចាប់អារម្មណ៍យ៉ាងណាក៏ដោយ។ ហើយចូរពួកអ្នកកុំរៀបអាពាហ៍ពិពាហ៍( ស្ត្រីដែលមានជំនឿ) ឱ្យទៅបុរសមូស្ហរីគីនឱ្យសោះ។ ហើយពិតប្រាកដណាស់ ទាសាដែលជាអ្នកមានជំនឿនោះប្រសើរជាងបុរសមូស្ហរីគីន[២] ទៅទៀត ទោះបីជាបុរសនោះធ្វើឱ្យពួកអ្នកចាប់អារម្មណ៍យ៉ាងណាក៏ដោយ។ ពួកគេទាំងនោះនឹងអូសទាញ( ពួកអ្នក) ទៅរកឋាននរក។ ចំណែកអល់ឡោះវិញ គឺអំពាវនាវ( ពួកអ្នក) ទៅរកឋានសួគ៌ និងការអភ័យទោសតាមការអនុញ្ញាតរបស់ទ្រង់។ ហើយអល់ឡោះបញ្ជាក់យ៉ាងច្បាស់ពីច្បាប់ទាំងឡាយរបស់ទ្រង់ដល់មនុស្សលោកដើម្បីឱ្យពួកគេចងចាំ។

وَيَسْـَٔلُونَكَ عَنِ ٱلْمَحِيضِۖ قُلْ هُوَ أَذًى
فَٱعْتَزِلُواْ ٱلنِّسَآءَ فِى ٱلْمَحِيضِۖ وَلَا تَقْرَبُوهُنَّ
حَتَّىٰ يَطْهُرْنَۖ فَإِذَا تَطَهَّرْنَ فَأْتُوهُنَّ مِنْ
حَيْثُ أَمَرَكُمُ ٱللَّهُۚ إِنَّ ٱللَّهَ يُحِبُّ ٱلتَّوَّٰبِينَ
وَيُحِبُّ ٱلْمُتَطَهِّرِينَ ٢٢٢

២២២-ហើយពួកគេនឹងសួរអ្នក( មូហាំម៉ាត់) អំពីឈាមរដូវ។ ចូរអ្នកឆ្លើយថា: ឈាមរដូវនោះគឺវាកខ្វក់បំផុត។ ហេតុនេះ ចូរពួកអ្នកជៀសវាង( រួមរ័ក) ពីភរិយាក្នុងអំឡុងពេលដែលមានរដូវ ហើយកុំទៅជិតពួកនាង( ដើម្បីរួមរ័ក) រហូតទាល់តែពួកនាងជ្រះស្អាត( អស់រដូវហើយងូតទឹកសំអាត) ខ្លួនប្រាណសិន។ បើកាលណាពួកនាងជ្រះស្អាតហើយនោះ ពួកអ្នកអាចរួមរ័កជាមួយពួកនាងនៅត្រង់កន្លែង( ប្រដាប់ភេទ) ដែលអល់ឡោះបានអនុញ្ញាតឱ្យពួកអ្នក។ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្តាអ្នកដែលសារភាព

១-ស្ត្រីមូស្ហរីគីន : ស្ត្រីដែលពុំមែនជាអ្នកកាន់សាសនាអ៊ិស្លាម លើកលែងតែស្ត្រីដែលជាយ៉ាហ៊ូទី និងណាសរ៉នី ។
២-បុរសមូស្ហរីគីន : បុរសដែលពុំមែនជាអ្នកកាន់សាសនាអ៊ិស្លាម លើកលែងតែបុរសដែលជាយ៉ាហ៊ូទី និងណាសរ៉នី ។

ទោសកំហុស និងស្រឡាញ់បណ្តាអ្នកដែលជ្រះស្អាត ។

نِسَآؤُكُمۡ حَرۡثٞ لَّكُمۡ فَأۡتُواْ حَرۡثَكُمۡ أَنَّىٰ شِئۡتُمۡۖ
وَقَدِّمُواْ لِأَنفُسِكُمۡۚ وَٱتَّقُواْ ٱللَّهَ وَٱعۡلَمُوٓاْ
أَنَّكُم مُّلَٰقُوهُۗ وَبَشِّرِ ٱلۡمُؤۡمِنِينَ ٢٢٣

២២៣-ភរិយារបស់ពួកអ្នក( ប្រៀបដូច) ជាថ្នាលសម្រាប់ពួកអ្នក ហេតុនេះពួកអ្នកទៅរកថ្នាលរបស់ពួកអ្នក( រួមរ័ក) តាមរបៀបដែលពួកអ្នកចង់[1] ចុះ ។ ហើយចូរពួកអ្នកសាងអំពើល្អទុកសម្រាប់ខ្លួនឯង ។ ហើយពួកអ្នកត្រូវកោតខ្លាចអល់ឡោះ និងត្រូវដឹងថា: ពួកអ្នកពិតជានឹងជួបទ្រង់( នាថ្ងៃបរលោក) ។ ហើយចូរអ្នក( មូហាំម៉ាត់) ផ្តល់ដំណឹងរីករាយដល់បណ្តាអ្នកដែលមានជំនឿ ។

وَلَا تَجۡعَلُواْ ٱللَّهَ عُرۡضَةٗ لِّأَيۡمَٰنِكُمۡ أَن
تَبَرُّواْ وَتَتَّقُواْ وَتُصۡلِحُواْ بَيۡنَ ٱلنَّاسِۚ وَٱللَّهُ
سَمِيعٌ عَلِيمٞ ٢٢٤

២២៤-ហើយចូរពួកអ្នកកុំយកការស្បថស្បែរបស់ពួកអ្នកចំពោះអល់ឡោះធ្វើជារនាំងរារាំងក្នុងការសាងអំពើល្អ និងការកោតខ្លាចទ្រង់ ហើយនិងការសម្រុះសម្រួលរវាងមនុស្សលោកឱ្យសោះ ។ ហើយអល់ឡោះមហាឮ មហាដឹង ។

لَّا يُؤَاخِذُكُمُ ٱللَّهُ بِٱللَّغۡوِ فِيٓ أَيۡمَٰنِكُمۡ وَلَٰكِن
يُؤَاخِذُكُم بِمَا كَسَبَتۡ قُلُوبُكُمۡۗ وَٱللَّهُ غَفُورٌ
حَلِيمٞ ٢٢٥

២២៥-អល់ឡោះមិនយកទោសពៃរ៍ពួកអ្នកចំពោះការស្បថស្បែរបស់ពួកអ្នកដោយអចេតនានោះឡើយ ប៉ុន្តែទ្រង់យកទោសពៃរ៍ពួកអ្នកចំពោះអ្វីដែលបានកើតឡើងពីចិត្តរបស់ពួកអ្នក ។ ហើយអល់ឡោះមហាអភ័យទោស មហាអត់ធ្មត់ ។

لِّلَّذِينَ يُؤۡلُونَ مِن نِّسَآئِهِمۡ تَرَبُّصُ أَرۡبَعَةِ أَشۡهُرٖۖ
فَإِن فَآءُو فَإِنَّ ٱللَّهَ غَفُورٞ رَّحِيمٞ ٢٢٦

២២៦-ចំពោះពួកដែលស្បថថា នឹងមិនរួមរ័កជាមួយភរិយារបស់ពួកគេ គេអនុគ្រោះឱ្យរយៈពេលបួនខែ ។ តែប្រសិនបើពួកគេវិលត្រឡប់ទៅ( រួមរ័កជាមួយភរិយា) វិញ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَإِنۡ عَزَمُواْ ٱلطَّلَٰقَ فَإِنَّ ٱللَّهَ سَمِيعٌ عَلِيمٞ ٢٢٧

២២៧-ហើយប្រសិនបើពួកគេមានបំណងលែងលះ( ក្រោយពីគ្រប់រយៈពេលបួនខែ) ពិតប្រាកដណាស់ អល់ឡោះមហាឮ មហាដឹង ។

وَٱلۡمُطَلَّقَٰتُ يَتَرَبَّصۡنَ بِأَنفُسِهِنَّ ثَلَٰثَةَ
قُرُوٓءٖۚ وَلَا يَحِلُّ لَهُنَّ أَن يَكۡتُمۡنَ مَا خَلَقَ ٱللَّهُ
فِيٓ أَرۡحَامِهِنَّ إِن كُنَّ يُؤۡمِنَّ بِٱللَّهِ وَٱلۡيَوۡمِ

២២៨-ហើយស្ត្រីដែលត្រូវបានប្តីលែង ពួកនាងត្រូវរង់ចាំ( មិនអាចរៀបអាពាហ៍ពិពាហ៍បាន) រហូតដល់ជ្រះស្អាតពីឈាមរដូវ ឬមានឈាមរដូវចំនួនបីដង ហើយពួកនាងមិនត្រូវលាក់បាំងនូវអ្វីដែលអល់ឡោះបានបង្កើតនៅក្នុងស្បូន( គភ៌ឬឈាមរដូវ) របស់ពួកនាង

---

១-ការរួមរ័កជាមួយប្រពន្ធរបស់អ្នកតាមរបៀបណាក៏បាន ដរាបណាការរួមរ័កនោះតាមរន្ធយោនី មិនមែនតាមរន្ធគូថឡើយ ។

ٱلْـَٔاخِرِ ۚ وَبُعُولَتُهُنَّ أَحَقُّ بِرَدِّهِنَّ فِى ذَٰلِكَ إِنْ
أَرَادُوٓا۟ إِصْلَٰحًا ۚ وَلَهُنَّ مِثْلُ ٱلَّذِى عَلَيْهِنَّ
بِٱلْمَعْرُوفِ ۚ وَلِلرِّجَالِ عَلَيْهِنَّ دَرَجَةٌ ۗ وَٱللَّهُ
عَزِيزٌ حَكِيمٌ ﴿٢٢٨﴾

នោះឡើយ ប្រសិនបើពួកនាងមានជំនឿលើអល់ឡោះ និងថ្ងៃបរលោកនោះ ។ ហើយប្តីរបស់ពួកនាងមានសិទ្ធិនាំពួកនាងមករួមរស់ក្នុងអំឡុងពេលរង់ចាំ( អ៊ិទឌះ) ប្រសិនបើពួកគេមានបំណងចង់សម្រុះសម្រួលនោះ ។ ហើយពួកនាងមានសិទ្ធិទៅលើប្តីដូចសិទ្ធិរបស់ប្តីដែលមានទៅលើពួកនាងដោយស្របច្បាប់ដែរ ។ តែចំពោះបុរសមានឋានៈលើសស្ត្រី ( ក្នុងការរួមរស់ជាមួយគ្នា និងការផ្គត់ផ្គង់គ្រួសារជាដើម) ។ ហើយអល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

ٱلطَّلَٰقُ مَرَّتَانِ ۖ فَإِمْسَاكٌۢ بِمَعْرُوفٍ أَوْ تَسْرِيحٌۢ
بِإِحْسَٰنٍ ۗ وَلَا يَحِلُّ لَكُمْ أَن تَأْخُذُوا۟ مِمَّآ
ءَاتَيْتُمُوهُنَّ شَيْـًٔا إِلَّآ أَن يَخَافَآ أَلَّا يُقِيمَا
حُدُودَ ٱللَّهِ ۖ فَإِنْ خِفْتُمْ أَلَّا يُقِيمَا حُدُودَ ٱللَّهِ
فَلَا جُنَاحَ عَلَيْهِمَا فِيمَا ٱفْتَدَتْ بِهِۦ ۗ تِلْكَ
حُدُودُ ٱللَّهِ فَلَا تَعْتَدُوهَا ۚ وَمَن يَتَعَدَّ حُدُودَ
ٱللَّهِ فَأُو۟لَٰٓئِكَ هُمُ ٱلظَّٰلِمُونَ ﴿٢٢٩﴾

២២៩-ការលែងលះ( ដែលអាចវិលត្រលប់ទៅរួមរស់ជាមួយភរិយាវិញបាន) គឺមានចំនួនពីរដង ។ ដូច្នេះពួកអ្នកអាចរួមរស់ជាមួយភរិយាវិញ( ក្រោយពីការលែងលះនីមួយៗ) ក្នុងភាពប្រពៃ[1] ឬអាចលែងលះពួកនាងឱ្យដាច់ស្រឡះក្នុងភាពប្រពៃដែរ ។ ហើយពួកអ្នកមិនអាចយកអ្វី( ប្រាក់ខាន់ស្លានិងទ្រព្យផ្សេងទៀត) ដែលពួកអ្នកបានផ្តល់ឱ្យពួកនាងឡើយ លើកលែងតែពួកគេទាំងពីរបារម្ភខ្លាច ( ការរួមរស់ជាមួយគ្នា) មិនអាចអនុវត្តច្បាប់របស់អល់ឡោះបានប៉ុណ្ណោះ ។ ដូច្នេះ ប្រសិនបើពួកអ្នកបារម្ភខ្លាចពួកគេទាំងពីរមិនអាចអនុវត្តច្បាប់របស់អល់ឡោះបាន គឺគ្មានទោសពៃរ៍អ្វីឡើយចំពោះពួកគេទាំងពីរ បើនាងព្រមសង( ប្រាក់ខាន់ស្លា) វិញនោះ ។ នោះគឺជាច្បាប់របស់អល់ឡោះ ។ ដូច្នេះចូរពួកអ្នកកុំបំពានលើវាឱ្យសោះ ។ ហើយអ្នកណាដែលបំពានច្បាប់របស់អល់ឡោះ អ្នកទាំងនោះគឺជាពួកល្មើស ។

فَإِن طَلَّقَهَا فَلَا تَحِلُّ لَهُۥ مِنۢ بَعْدُ حَتَّىٰ تَنكِحَ
زَوْجًا غَيْرَهُۥ ۗ فَإِن طَلَّقَهَا فَلَا جُنَاحَ عَلَيْهِمَآ
أَن يَتَرَاجَعَآ إِن ظَنَّآ أَن يُقِيمَا حُدُودَ ٱللَّهِ ۗ
وَتِلْكَ حُدُودُ ٱللَّهِ يُبَيِّنُهَا لِقَوْمٍ يَعْلَمُونَ ﴿٢٣٠﴾

២៣០-ហើយប្រសិនបើគេ( ប្តី) បានលែងលះនាង( ជាលើកទីបី) រួចនាងមិនមែនជាប្រពន្ធស្របច្បាប់សម្រាប់គេទៀតទេក្រោយពីនោះ លុះត្រាតែនាងរៀបអាពាហ៍ពិពាហ៍ជាមួយបុរសផ្សេងសិន ។ ហើយបើបុរសនោះ( ប្តីថ្មី) បានលែងលះនាង គឺគ្មានទោសពៃរ៍អ្វីទេទៅលើពួកគេទាំងពីរ( នាងនិងប្តីដើម) ក្នុងការវិលត្រឡប់ទៅរកគ្នាវិញ( រៀបការសាជាថ្មី) ប្រសិនបើពួកគេទាំងពីរគិតថា អាចអនុវត្តច្បាប់អល់ឡោះបាននោះ ។ ហើយទាំងនោះ គឺ

១- គោលបំណងល្អ ស្របច្បាប់ គោរពសិទ្ធិគ្នាទៅវិញទៅមក ។

ជាច្បាប់របស់អល់ឡោះដែលទ្រង់បញ្ជាក់យ៉ាងច្បាស់សម្រាប់ក្រុមដែលចេះដឹង ។

وَإِذَا طَلَّقۡتُمُ ٱلنِّسَآءَ فَبَلَغۡنَ أَجَلَهُنَّ
فَأَمۡسِكُوهُنَّ بِمَعۡرُوفٍ أَوۡ سَرِّحُوهُنَّ
بِمَعۡرُوفٖۚ وَلَا تُمۡسِكُوهُنَّ ضِرَارٗا لِّتَعۡتَدُواْۚ
وَمَن يَفۡعَلۡ ذَٰلِكَ فَقَدۡ ظَلَمَ نَفۡسَهُۥۚ وَلَا
تَتَّخِذُوٓاْ ءَايَٰتِ ٱللَّهِ هُزُوٗاۚ وَٱذۡكُرُواْ نِعۡمَتَ ٱللَّهِ
عَلَيۡكُمۡ وَمَآ أَنزَلَ عَلَيۡكُم مِّنَ ٱلۡكِتَٰبِ
وَٱلۡحِكۡمَةِ يَعِظُكُم بِهِۦۚ وَٱتَّقُواْ ٱللَّهَ وَٱعۡلَمُوٓاْ
أَنَّ ٱللَّهَ بِكُلِّ شَيۡءٍ عَلِيمٞ ﴿٢٣١﴾

២៣១-ហើយកាលណាពួកអ្នកបានលែងលះប្រពន្ធ ហើយជិតផុតរយៈពេលកំណត់របស់ពួកនាង( អ៊ិទឌះ) ដូច្នេះពួកអ្នកអាចរួមរស់ជាមួយពួកនាងវិញដោយគុណធមិ ឬក៏លែងលះពួកនាងឱ្យដាច់ស្រឡះតែម្តងដោយគុណធមិដែរ ។ ប៉ុន្តែពួកអ្នកមិនត្រូវរួមរស់ជាមួយពួកនាងវិញក្នុងគោលបំណងអាក្រក់ដើម្បីធ្វើបាបដោយបំពាននោះទេ ។ ហើយបើអ្នកណាធ្វើបែបនោះ គេប្រាកដជាបានបំពានលើខ្លួនឯង ។ ហើយចូរពួកអ្នកកុំយកច្បាប់របស់អល់ឡោះធ្វើជាការលេងសើចឱ្យសោះ ។ តែពួកអ្នកត្រូវចងចាំនូវនៀកម៉ាត់របស់អល់ឡោះដែលបានប្រទានឱ្យពួកអ្នក ព្រមទាំងអ្វី១ដែលទ្រង់បានបញ្ចុះឱ្យពួកអ្នកក្នុងគម្ពីរ( គួរអាន) និងហ៊ិកម៉ះ( ស៊ុណ្ណះ) ដើម្បីអប់រំពួកអ្នក ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ និងត្រូវដឹងថា ពិតប្រាកដណាស់ អល់ឡោះមហាដឹងនូវរាល់អ្វី១ទាំងអស់ ។

وَإِذَا طَلَّقۡتُمُ ٱلنِّسَآءَ فَبَلَغۡنَ أَجَلَهُنَّ فَلَا
تَعۡضُلُوهُنَّ أَن يَنكِحۡنَ أَزۡوَٰجَهُنَّ إِذَا تَرَٰضَوۡاْ
بَيۡنَهُم بِٱلۡمَعۡرُوفِۗ ذَٰلِكَ يُوعَظُ بِهِۦ مَن كَانَ
مِنكُمۡ يُؤۡمِنُ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِۗ ذَٰلِكُمۡ أَزۡكَىٰ
لَكُمۡ وَأَطۡهَرُۗ وَٱللَّهُ يَعۡلَمُ وَأَنتُمۡ لَا تَعۡلَمُونَ ﴿٢٣٢﴾

២៣២-ហើយកាលណាពួកអ្នកបានលែងលះភរិយា( លើកទីមួយ ឬលើកទីពីរ) ហើយផុតរយៈពេលកំណត់( អ៊ិទឌះ) របស់ពួកនាងនោះ ចូរពួកអ្នក( អាណាព្យាបាល) កុំរារាំងពួកនាងអំពីការរៀបអាពាហ៍ពិពាហ៍ជាមួយស្វាមីរបស់ពួកនាងសាជាថ្មីឱ្យសោះ ប្រសិនបើពួកគេបានព្រមព្រៀងគ្នាដោយគុណធមិហើយនោះ ។ នេះជាការឱ្យដំបូន្មានដល់អ្នកដែលមានជំនឿលើអល់ឡោះនិងថ្ងៃបរលោកក្នុងចំណោមពួកអ្នក ។ ទាំងនោះគឺជាការប្រសើរ និងស្អាតស្អំជាទីបំផុតសម្រាប់ពួកអ្នក ។ ហើយអល់ឡោះដឹង តែពួកអ្នកមិនដឹងឡើយ ។

۞وَٱلۡوَٰلِدَٰتُ يُرۡضِعۡنَ أَوۡلَٰدَهُنَّ حَوۡلَيۡنِ كَامِلَيۡنِۖ
لِمَنۡ أَرَادَ أَن يُتِمَّ ٱلرَّضَاعَةَۚ وَعَلَى ٱلۡمَوۡلُودِ لَهُۥ
رِزۡقُهُنَّ وَكِسۡوَتُهُنَّ بِٱلۡمَعۡرُوفِۚ لَا تُكَلَّفُ نَفۡسٌ
إِلَّا وُسۡعَهَاۚ لَا تُضَآرَّ وَٰلِدَةُۢ بِوَلَدِهَا وَلَا
مَوۡلُودٞ لَّهُۥ بِوَلَدِهِۦۚ وَعَلَى ٱلۡوَارِثِ مِثۡلُ

២៣៣-ហើយម្តាយទាំងឡាយគប្បីបំបៅកូនរបស់ខ្លួនក្នុងរយៈពេលពីរឆ្នាំពេញសម្រាប់អ្នកណា( ឪពុកម្តាយ) ដែលចង់បំពេញការបំបៅនេះ ។ ហើយឪពុករបស់ទារកនោះតម្រូវឱ្យផ្តល់ម្ហូបអាហារនិងសំលៀកបំពាក់ដល់ម្តាយទារកតាមលទ្ធភាព ។ អល់ឡោះមិនដាក់បន្ទុកទៅលើនរណាម្នាក់ឱ្យហួសពីលទ្ធភាពរបស់គេឡើយ ។ ចូរកុំឱ្យឪពុកម្តាយយកកូនរបស់ខ្លួនធ្វើជាមធ្យោបាយដើម្បីធ្វើអំពើមិនគប្បីទៅលើគ្នាទៅវិញទៅមកឱ្យសោះ ។ ហើយចំពោះអ្នកដែល

ذَٰلِكَۗ فَإِنۡ أَرَادَا فِصَالًا عَن تَرَاضٖ مِّنۡهُمَا
وَتَشَاوُرٖ فَلَا جُنَاحَ عَلَيۡهِمَاۗ وَإِنۡ أَرَدتُّمۡ أَن
تَسۡتَرۡضِعُوٓاْ أَوۡلَٰدَكُمۡ فَلَا جُنَاحَ عَلَيۡكُمۡ إِذَا
سَلَّمۡتُم مَّآ ءَاتَيۡتُم بِٱلۡمَعۡرُوفِۗ وَٱتَّقُواْ ٱللَّهَ
وَٱعۡلَمُوٓاْ أَنَّ ٱللَّهَ بِمَا تَعۡمَلُونَ بَصِيرٞ ٢٣٣

ទទួលកេរមរតក(ពីឪពុករបស់ទារក) ក៏ត្រូវទទួលបន្ទុកដូច្នោះដែរ។ ហើយប្រសិនបើឪពុកម្តាយចង់ផ្តាច់ការបំបៅដោះកូន(មុនគំរប់រយៈពេលពីរឆ្នាំ) ដោយមានការពិភាក្សានិងឯកភាពគ្នាពីពួកគេទាំងពីរ ហើយនោះ គឺគ្មានទោសពៃរ៍អ្វីចំពោះពួកគេទាំងពីរឡើយ។ តែប្រសិនបើពួកអ្នកចង់រកអ្នកបំបៅកូនរបស់ពួកអ្នក ក៏គ្មានទោសពៃរ៍អ្វីដែរចំពោះពួកអ្នក កាលណាពួកអ្នកបានផ្តល់កម្រៃដោយសមរម្យនោះ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ និងត្រូវដឹងថា ពិតប្រាកដណាស់ អល់ឡោះមហាឃើញនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

وَٱلَّذِينَ يُتَوَفَّوۡنَ مِنكُمۡ وَيَذَرُونَ أَزۡوَٰجٗا
يَتَرَبَّصۡنَ بِأَنفُسِهِنَّ أَرۡبَعَةَ أَشۡهُرٖ وَعَشۡرٗاۖ فَإِذَا
بَلَغۡنَ أَجَلَهُنَّ فَلَا جُنَاحَ عَلَيۡكُمۡ فِيمَا فَعَلۡنَ
فِيٓ أَنفُسِهِنَّ بِٱلۡمَعۡرُوفِۗ وَٱللَّهُ بِمَا تَعۡمَلُونَ
خَبِيرٞ ٢٣٤

២៣៤-ហើយអ្នកដែលទទួលមរណភាពក្នុងចំណោមពួកអ្នក ដោយពួកគេបន្សល់ទុកភរិយានោះ ពួកនាងត្រូវរង់ចាំរយៈពេលបួនខែដប់ថ្ងៃ។ ហើយនៅពេលដែលកាលកំណត់របស់ពួកនាងបានផុតហើយនោះ គឺគ្មានទោសពៃរ៍ចំពោះពួកអ្នក(អាណាព្យាបាល) ទេនូវអ្វីដែលពួកនាងធ្វើសម្រាប់ខ្លួននាងដោយស្របច្បាប់[1]។ ហើយអល់ឡោះដឹងបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

وَلَا جُنَاحَ عَلَيۡكُمۡ فِيمَا عَرَّضۡتُم بِهِۦ مِنۡ
خِطۡبَةِ ٱلنِّسَآءِ أَوۡ أَكۡنَنتُمۡ فِيٓ أَنفُسِكُمۡۚ عَلِمَ
ٱللَّهُ أَنَّكُمۡ سَتَذۡكُرُونَهُنَّ وَلَٰكِن لَّا تُوَاعِدُوهُنَّ
سِرًّا إِلَّآ أَن تَقُولُواْ قَوۡلٗا مَّعۡرُوفٗاۚ وَلَا تَعۡزِمُواْ
عُقۡدَةَ ٱلنِّكَاحِ حَتَّىٰ يَبۡلُغَ ٱلۡكِتَٰبُ أَجَلَهُۥۚ
وَٱعۡلَمُوٓاْ أَنَّ ٱللَّهَ يَعۡلَمُ مَا فِيٓ أَنفُسِكُمۡ
فَٱحۡذَرُوهُۚ وَٱعۡلَمُوٓاْ أَنَّ ٱللَّهَ غَفُورٌ حَلِيمٞ ٢٣٥

២៣៥-ហើយគ្មានទោសពៃរ៍ចំពោះពួកអ្នកឡើយនូវអ្វីដែលពួកអ្នកបានលាតត្រដាងឬពួកអ្នកលាក់ទុកក្នុងចិត្តពីការស្តីដណ្តឹងស្ត្រី(ក្នុងកំឡុងពេលដែលពួកនាងស្ថិតក្នុងរយៈពេលរង់ចាំ)។ អល់ឡោះដឹងថា ពិតប្រាកដណាស់ ពួកអ្នកនឹងនឹកគិតដល់ពួកនាង ប៉ុន្តែពួកអ្នកមិនត្រូវសន្យាជាមួយពួកនាងដោយស្ងាត់[2] នោះទេ លើកលែងតែពួកអ្នកនិយាយនូវពាក្យសំដីដែលល្អ[3] ប៉ុណ្ណោះ។ ហើយចូរពួកអ្នកកុំសម្រេចចិត្តរៀបអាពាហ៍ពិពាហ៍(ជាមួយស្ត្រីដែលស្ថិតក្នុងការរង់ចាំ)ឱ្យសោះ លុះត្រាតែផុតរយៈពេលកំណត់សិន។ ហើយពួកអ្នកត្រូវដឹងថា ពិតប្រាកដណាស់ អល់ឡោះដឹងនូវអ្វីដែលមាននៅក្នុងខ្លួនពួកអ្នក ដូច្នេះចូរពួកអ្នកកោតខ្លាចចំពោះទ្រង់។ ហើយពួកអ្នកត្រូវដឹងទៀតថា: ពិតប្រាកដណាស់ អល់ឡោះ

---

១-ដូចជាការតុបតែងកាយ និងរៀបការជាដើម។

២-ដើម្បីទៅសាហាយស្មន់នឹងគ្នា ឬរៀបអាពាហ៍ពិពាហ៍មុនផុតកំណត់រយៈពេលដែលពួកនាងរង់ចាំ។

៣-បង្ហាញពីឆន្ទៈក្នុងការរៀបអាពាហ៍ពិពាហ៍ត្រឹមត្រូវក្រោយពេលផុតកំណត់រយៈពេលដែលពួកនាងត្រូវរង់ចាំ។

មហាអភ័យទោស មហាអត់ធ្មត់ ។

٢٣٦-គ្មានទោសពៃរ៍អ្វីចំពោះពួកអ្នកឡើយ ប្រសិនបើពួកអ្នកលែងលះភរិយាមុននឹងរួមរ័ក(លើកដំបូង)ជាមួយពួកនាង ឬពុំទាន់បានកំណត់ចំនួនខាន់ស្លាជូនពួកនាងទេនោះ ។ ហើយចូរពួកអ្នកផ្តល់ឱ្យពួកនាងនូវទ្រព្យសម្បត្តិណាមួយដ៏សមរម្យចំពោះអ្នកធូរធាទៅតាមលទ្ធភាពរបស់គេ ហើយចំពោះអ្នកក្រក៏ទៅតាមលទ្ធភាពរបស់គេដែរ ។ នេះជាកាតព្វកិច្ចទៅលើបណ្តាអ្នកដែលធ្វើល្អ ។

لَّا جُنَاحَ عَلَيۡكُمۡ إِن طَلَّقۡتُمُ ٱلنِّسَآءَ مَا لَمۡ تَمَسُّوهُنَّ أَوۡ تَفۡرِضُواْ لَهُنَّ فَرِيضَةٗۚ وَمَتِّعُوهُنَّ عَلَى ٱلۡمُوسِعِ قَدَرُهُۥ وَعَلَى ٱلۡمُقۡتِرِ قَدَرُهُۥ مَتَٰعَۢا بِٱلۡمَعۡرُوفِۖ حَقًّا عَلَى ٱلۡمُحۡسِنِينَ ٢٣٦

٢٣٧-ហើយប្រសិនបើពួកអ្នកលែងលះពួកនាងមុនពេលរួមរ័ក(លើកដំបូង)ជាមួយពួកនាង ដោយពួកអ្នកបានកំណត់ចំនួនខាន់ស្លាឱ្យពួកនាងហើយនោះ ពួកអ្នកត្រូវផ្តល់ឱ្យពួកនាងពាក់កណ្តាលនៃខាន់ស្លានោះ លើកលែងតែពួកនាងអធ្យាស្រ័យ ឬបុរសជាប្តីអធ្យាស្រ័យ(ប្រគល់ខាន់ស្លានោះឱ្យពួកនាងទាំងអស់តែម្តង) ។ ហើយការអធ្យាស្រ័យរបស់ពួកអ្នកធ្វើឱ្យពួកអ្នកកាន់តែខិតជិតទៅរកការកោតខ្លាចអល់ឡោះ ។ ហើយចូរពួកអ្នកកុំភ្លេចនូវអំពើសប្បុរសរវាងពួកអ្នក ។ ពិតប្រាកដណាស់ អល់ឡោះមហាឃើញនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

وَإِن طَلَّقۡتُمُوهُنَّ مِن قَبۡلِ أَن تَمَسُّوهُنَّ وَقَدۡ فَرَضۡتُمۡ لَهُنَّ فَرِيضَةٗ فَنِصۡفُ مَا فَرَضۡتُمۡ إِلَّآ أَن يَعۡفُونَ أَوۡ يَعۡفُوَاْ ٱلَّذِي بِيَدِهِۦ عُقۡدَةُ ٱلنِّكَاحِۚ وَأَن تَعۡفُوٓاْ أَقۡرَبُ لِلتَّقۡوَىٰۚ وَلَا تَنسَوُاْ ٱلۡفَضۡلَ بَيۡنَكُمۡۚ إِنَّ ٱللَّهَ بِمَا تَعۡمَلُونَ بَصِيرٌ ٢٣٧

٢٣٨-ចូរពួកអ្នកថែរក្សាសឡាតទាំងប្រាំពេល ជាពិសេសសឡាតអាសើរ ។ ហើយចូរពួកអ្នកប្រតិបត្តិសឡាតដោយការឱនលំទោនចំពោះអល់ឡោះ ។

حَٰفِظُواْ عَلَى ٱلصَّلَوَٰتِ وَٱلصَّلَوٰةِ ٱلۡوُسۡطَىٰ وَقُومُواْ لِلَّهِ قَٰنِتِينَ ٢٣٨

٢٣٩-ហើយប្រសិនបើពួកអ្នកភ័យខ្លាច(សត្រូវ) ចូរពួកអ្នកសឡាតដោយដើរ ឬជិះលើជំនិះ(តាមលក្ខណៈដែលអាចធ្វើបាន) ។ តែនៅពេលដែលពួកអ្នកមានសន្តិភាព ចូរពួកអ្នកសឡាត និងរំលឹកចំពោះអល់ឡោះតាមរបៀបដែលទ្រង់បានបង្រៀនពួកអ្នកនូវអ្វីដែលពួកអ្នកមិនបានដឹង ។

فَإِنۡ خِفۡتُمۡ فَرِجَالًا أَوۡ رُكۡبَانٗاۖ فَإِذَآ أَمِنتُمۡ فَٱذۡكُرُواْ ٱللَّهَ كَمَا عَلَّمَكُم مَّا لَمۡ تَكُونُواْ تَعۡلَمُونَ ٢٣٩

٢٤០-ហើយបណ្តាអ្នកដែលទទួលមរណភាពក្នុងចំណោមពួកអ្នក ដោយពួកគេបន្សល់ទុកភរិយានោះ ចូរឱ្យពួកគេធ្វើបណ្តាំ(មុនពេលស្លាប់)សម្រាប់ភរិយារបស់ពួកគេនូវការផ្គត់ផ្គង់រយៈពេលមួយឆ្នាំដោយមិនត្រូវបណ្តេញនាងចេញពីលំនៅដ្ឋានឡើយ ។ ប៉ុន្តែបើពួក

وَٱلَّذِينَ يُتَوَفَّوۡنَ مِنكُمۡ وَيَذَرُونَ أَزۡوَٰجٗا وَصِيَّةٗ لِّأَزۡوَٰجِهِم مَّتَٰعًا إِلَى ٱلۡحَوۡلِ غَيۡرَ إِخۡرَاجٖۚ فَإِنۡ خَرَجۡنَ فَلَا جُنَاحَ عَلَيۡكُمۡ فِي

مَا فَعَلْنَ فِيٓ أَنفُسِهِنَّ مِن مَّعْرُوفٍۗ وَٱللَّهُ عَزِيزٌ حَكِيمٌ ﴿٢٤٠﴾

នាងចាកចេញដោយខ្លួនឯងក៏គ្មានទោសពៃរ៍អ្វីដល់ពួកអ្នក(អ្នកទទួលមរតក)នូវអ្វីដែលពួកនាងបានធ្វើដោយស្របច្បាប់សម្រាប់ខ្លួនពួកនាងដែរ។ ហើយអល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

وَلِلْمُطَلَّقَٰتِ مَتَٰعٌۢ بِٱلْمَعْرُوفِۖ حَقًّا عَلَى ٱلْمُتَّقِينَ ﴿٢٤١﴾

២៤១-ហើយសម្រាប់ស្ត្រីដែលត្រូវប្តីលែង ពួកនាងក៏ត្រូវទទួលការផ្គត់ផ្គង់ជីវភាព(ក្នុងអំឡុងពេលរង់ចាំ)ឱ្យបានសមរម្យដែរ។ នេះជាកាតព្វកិច្ចលើបណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ។

كَذَٰلِكَ يُبَيِّنُ ٱللَّهُ لَكُمْ ءَايَٰتِهِۦ لَعَلَّكُمْ تَعْقِلُونَ ﴿٢٤٢﴾

២៤២-ដូច្នោះដែរ អល់ឡោះបញ្ជាក់យ៉ាងច្បាស់នូវអាយ៉ាត់ៗទាំងឡាយរបស់ទ្រង់ដល់ពួកអ្នក ដើម្បីឱ្យពួកអ្នកពិចារណា។

أَلَمْ تَرَ إِلَى ٱلَّذِينَ خَرَجُوا۟ مِن دِيَٰرِهِمْ وَهُمْ أُلُوفٌ حَذَرَ ٱلْمَوْتِ فَقَالَ لَهُمُ ٱللَّهُ مُوتُوا۟ ثُمَّ أَحْيَٰهُمْۚ إِنَّ ٱللَّهَ لَذُو فَضْلٍ عَلَى ٱلنَّاسِ وَلَٰكِنَّ أَكْثَرَ ٱلنَّاسِ لَا يَشْكُرُونَ ﴿٢٤٣﴾

២៤៣-តើអ្នក(មូហាំម៉ាត់)មិនបានដឹងអំពីពួកដែលបានរត់ចេញពីលំនៅដ្ឋានរបស់ពួកគេ(ដោយសារមានកាតព្វកិច្ចសង្គ្រាម ឬពេលមានជម្ងឺរាតត្បាត) ដោយពួកគេមានគ្នារាប់ពាន់នាក់បានភ័យខ្លាចពីសេចក្តីស្លាប់ទេឬ? ហើយអល់ឡោះបានមានបន្ទូលទៅកាន់ពួកគេថា: ចូរពួកអ្នកស្លាប់ចុះ។ ក្រោយមកអល់ឡោះបានធ្វើឱ្យពួកគេរស់ឡើងវិញ។ ពិតប្រាកដណាស់ អល់ឡោះមានក្តីមេត្តាករុណាដល់មនុស្សលោក ក៏ប៉ុន្តែមនុស្សលោកភាគច្រើនមិនដឹងគុណឡើយ។

وَقَٰتِلُوا۟ فِى سَبِيلِ ٱللَّهِ وَٱعْلَمُوٓا۟ أَنَّ ٱللَّهَ سَمِيعٌ عَلِيمٌ ﴿٢٤٤﴾

២៤៤-ហើយចូរពួកអ្នកធ្វើសង្គ្រាមក្នុងផ្លូវអល់ឡោះ ហើយត្រូវដឹងថា: ពិតប្រាកដណាស់ អល់ឡោះមហាឮ មហាដឹង។

مَّن ذَا ٱلَّذِى يُقْرِضُ ٱللَّهَ قَرْضًا حَسَنًا فَيُضَٰعِفَهُۥ لَهُۥٓ أَضْعَافًا كَثِيرَةًۚ وَٱللَّهُ يَقْبِضُ وَيَبْصُۜطُ وَإِلَيْهِ تُرْجَعُونَ ﴿٢٤٥﴾

២៤៥-បុគ្គលណាដែលឱ្យអល់ឡោះខ្ចីនូវកម្ចីមួយដ៏ល្អប្រពៃ(បរិច្ចាគទ្រព្យសម្បត្តិក្នុងមាគ៌ារបស់អល់ឡោះ)នោះ អល់ឡោះនឹងបង្កើនវាសម្រាប់គេវិញដ៏ច្រើនលើសលប់ជាមិនខាន។ ហើយអល់ឡោះជាអ្នកបន្ថយនិងបន្ថែម(លាភសក្ការៈ)។ ហើយពួកអ្នកនឹងត្រូវវិលត្រឡប់ទៅចំពោះទ្រង់តែមួយគត់។

أَلَمْ تَرَ إِلَى ٱلْمَلَإِ مِنۢ بَنِىٓ إِسْرَٰٓءِيلَ مِنۢ بَعْدِ مُوسَىٰٓ إِذْ قَالُوا۟ لِنَبِىٍّ لَّهُمُ ٱبْعَثْ لَنَا مَلِكًا نُّقَٰتِلْ فِى سَبِيلِ ٱللَّهِۖ قَالَ هَلْ عَسَيْتُمْ إِن

២៤៦-តើអ្នក(មូហាំម៉ាត់)ពុំបានដឹងទេឬអំពីមេដឹកនាំនៃអំបូរអ៊ីស្រាអែលក្រោយពី(សម័យកាល)មូសានោះ? ខណៈដែលពួកគេបាននិយាយទៅកាន់ណាពីរបស់ពួកគេថា: សូមលោកតែងតាំងស្តេចមួយអង្គសម្រាប់ពួកយើង ដើម្បីពួកយើងនឹងធ្វើសង្គ្រាមក្នុងមាគ៌ា

كُتِبَ عَلَيْكُمُ ٱلْقِتَالُ أَلَّا تُقَٰتِلُوا۟ ۖ قَالُوا۟
وَمَا لَنَآ أَلَّا نُقَٰتِلَ فِى سَبِيلِ ٱللَّهِ وَقَدْ
أُخْرِجْنَا مِن دِيَٰرِنَا وَأَبْنَآئِنَا ۖ فَلَمَّا كُتِبَ
عَلَيْهِمُ ٱلْقِتَالُ تَوَلَّوْا۟ إِلَّا قَلِيلًا مِّنْهُمْ ۗ وَٱللَّهُ
عَلِيمٌۢ بِٱلظَّٰلِمِينَ ﴿٢٤٦﴾

អល់ឡោះផង។ គាត់បានតបថាៈ តើពួកអ្នកបានគិតទេថា ប្រសិនបើគេដាក់កាតព្វកិច្ចសង្គ្រាមទៅលើពួកអ្នក រួចពួកអ្នកមិនធ្វើសង្គ្រាមទេនោះ? ពួកគេក៏បានតបវិញថាៈ តើមូលហេតុអ្វីដែលពួកយើងមិនធ្វើសង្គ្រាមក្នុងផ្លូវអល់ឡោះ បើពួកគេ(សត្រូវ)បានបណ្តេញពួកយើងចេញពីលំនៅដ្ឋាននិងកូនចៅរបស់ពួកយើងនោះ? តែនៅពេលដែលគេបានដាក់កាតព្វកិច្ចសង្គ្រាមទៅលើពួកគេ ពួកគេបែរជាបោះបង់ទៅវិញ លើកលែងតែមួយចំនួនតូចនៃពួកគេប៉ុណ្ណោះ។ ហើយអល់ឡោះដឹងបំផុតចំពោះពួកដែលបំពាន។

وَقَالَ لَهُمْ نَبِيُّهُمْ إِنَّ ٱللَّهَ قَدْ بَعَثَ لَكُمْ
طَالُوتَ مَلِكًا ۚ قَالُوٓا۟ أَنَّىٰ يَكُونُ لَهُ ٱلْمُلْكُ
عَلَيْنَا وَنَحْنُ أَحَقُّ بِٱلْمُلْكِ مِنْهُ وَلَمْ يُؤْتَ
سَعَةً مِّنَ ٱلْمَالِ ۚ قَالَ إِنَّ ٱللَّهَ ٱصْطَفَىٰهُ
عَلَيْكُمْ وَزَادَهُۥ بَسْطَةً فِى ٱلْعِلْمِ وَٱلْجِسْمِ ۖ
وَٱللَّهُ يُؤْتِى مُلْكَهُۥ مَن يَشَآءُ ۚ وَٱللَّهُ وَٰسِعٌ
عَلِيمٌ ﴿٢٤٧﴾

២៤៧-ហើយណាពីរបស់ពួកគេបានពោលទៅកាន់ពួកគេថាៈ ពិតប្រាកដណាស់ អល់ឡោះពិតជាបានតែងតាំងតលូតជាស្តេចសម្រាប់ពួកអ្នក។ ពួកគេបានតបថាៈ តើគេនឹងក្លាយជាអ្នកគ្រប់គ្រងពួកយើងយ៉ាងដូចម្តេច? តាមពិតពួកយើងសក្តិសមជាអ្នកគ្រប់គ្រងជាងរូបគេ ព្រោះរូបគេពុំមែនជាអ្នកមានទ្រព្យសម្បត្តិស្តុកស្តម្ភឡើយ។ គាត់បានតបថាៈ ពិតប្រាកដណាស់ អល់ឡោះបានជ្រើសរើសរូបគេធ្វើជាអ្នកគ្រប់គ្រងពួកអ្នក ហើយទ្រង់បានបន្ថែមដល់រូបគេនូវចំណេះដឹងដ៏ទូលំទូលាយនិងកាយសម្បទាមាំមួន។ ហើយអល់ឡោះផ្តល់អំណាចរបស់ទ្រង់ទៅឱ្យនរណាដែលទ្រង់មានចេតនា។ ហើយអល់ឡោះមហាទូលំទូលាយ មហាដឹង។

وَقَالَ لَهُمْ نَبِيُّهُمْ إِنَّ ءَايَةَ مُلْكِهِۦٓ أَن
يَأْتِيَكُمُ ٱلتَّابُوتُ فِيهِ سَكِينَةٌ مِّن
رَّبِّكُمْ وَبَقِيَّةٌ مِّمَّا تَرَكَ ءَالُ مُوسَىٰ وَءَالُ
هَٰرُونَ تَحْمِلُهُ ٱلْمَلَٰٓئِكَةُ ۚ إِنَّ فِى ذَٰلِكَ لَءَايَةً
لَّكُمْ إِن كُنتُم مُّؤْمِنِينَ ﴿٢٤٨﴾

២៤៨-ហើយណាពីរបស់ពួកគេបានពោលទៅកាន់ពួកគេទៀតថាៈ ពិតប្រាកដណាស់ សញ្ញាណនៃភាពជាអ្នកគ្រប់គ្រងរបស់គេ(តលូត) គឺមានហិបមួយមកដល់ពួកអ្នកដោយនៅក្នុងនោះមានភាពនឹងនរពីម្ចាស់របស់ពួកអ្នក និងមានសំភារៈមួយចំនួនទៀតដែលក្រុមគ្រួសាររបស់មូសា និងហារូនបានបន្សល់ទុកដែលនាំវាមកដោយម៉ាឡាអ៊ីកាត់។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះ គឺជាភស្តុតាងសម្រាប់ពួកអ្នក ប្រសិនបើពួកអ្នកជាអ្នកមានជំនឿ។

فَلَمَّا فَصَلَ طَالُوتُ بِٱلْجُنُودِ قَالَ إِنَّ ٱللَّهَ
مُبْتَلِيكُم بِنَهَرٍ فَمَن شَرِبَ مِنْهُ فَلَيْسَ مِنِّى
وَمَن لَّمْ يَطْعَمْهُ فَإِنَّهُۥ مِنِّىٓ إِلَّا مَنِ ٱغْتَرَفَ

២៤៩-ហើយនៅពេលដែលតលូតបានដឹកនាំទ័ព(ចេញទៅប្រយុទ្ធ) គាត់បានមានប្រសាសន៍ថាៈ ពិតប្រាកដណាស់ អល់ឡោះនឹងសាកល្បងពួកអ្នកដោយទន្លេមួយ។ ដូច្នេះអ្នកណាបានផឹកទឹកនោះ គឺគេពុំមែនជាសមាជិករបស់ខ្ញុំឡើយ រីឯអ្នកណាដែលមិនផឹក

غُرْفَةَۢ بِيَدِهِۦۚ فَشَرِبُوا۟ مِنْهُ إِلَّا قَلِيلًا مِّنْهُمْۚ
فَلَمَّا جَاوَزَهُۥ هُوَ وَٱلَّذِينَ ءَامَنُوا۟ مَعَهُۥ
قَالُوا۟ لَا طَاقَةَ لَنَا ٱلْيَوْمَ بِجَالُوتَ وَجُنُودِهِۦۚ
قَالَ ٱلَّذِينَ يَظُنُّونَ أَنَّهُم مُّلَٰقُوا۟ ٱللَّهِ
كَم مِّن فِئَةٍ قَلِيلَةٍ غَلَبَتْ فِئَةً كَثِيرَةًۢ بِإِذْنِ
ٱللَّهِۗ وَٱللَّهُ مَعَ ٱلصَّٰبِرِينَ ﴿٢٤٩﴾

ទឹកនោះ ពិតប្រាកដណាស់គេគឺជាសមាជិករបស់ខ្ញុំ លើកលែងតែអ្នកណាដែលបានក្បង់ទឹកនោះផឹកមួយក្បង់ដៃរបស់គេប៉ុណ្ណោះ (គឺគ្មានបញ្ហាឡើយ) ។ បន្ទាប់មកពួកគេក៏បានផឹកទឹកនោះ លើកលែងតែមួយចំនួនតូចអំពីពួកគេប៉ុណ្ណោះ ។ ហើយនៅពេលដែលតលូត និងអ្នកមានជំនឿរួមជាមួយគាត់បានឆ្លងផុតទន្លេនោះ ពួកគេបាននិយាយថា: ថ្ងៃនេះពួកយើងគ្មានលទ្ធភាពប្រយុទ្ធជាមួយជើលូត និងកងទ័ពរបស់គេទេ ។ បណ្ដាអ្នកដែលមានជំនឿយ៉ាងជាក់ច្បាស់ថាពួកគេពិតជានឹងបានជួបអល់ឡោះនោះបាននិយាយថា: ជាច្រើនដងមកហើយក្រុមដែលមានគ្នាតិចបានឈ្នះទៅលើក្រុមដែលមានគ្នាច្រើនដោយការអនុញ្ញាតពីអល់ឡោះនោះ ។ ហើយអល់ឡោះនៅជាមួយបណ្ដាអ្នកដែលអត់ធ្មត់ ។

وَلَمَّا بَرَزُوا۟ لِجَالُوتَ وَجُنُودِهِۦ قَالُوا۟ رَبَّنَآ
أَفْرِغْ عَلَيْنَا صَبْرًا وَثَبِّتْ أَقْدَامَنَا وَٱنصُرْنَا
عَلَى ٱلْقَوْمِ ٱلْكَٰفِرِينَ ﴿٢٥٠﴾

២៥០-ហើយនៅពេលពួកគេប្រឈមមុខជាមួយជើលូត និងកងទ័ពរបស់គេ ពួកគេបានបួងសួងសុំថា: ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាផ្ដល់ការអត់ធ្មត់ដល់ពួកយើង និងជួយពង្រឹងជំហររបស់ពួកយើង ព្រមទាំងជួយពួកយើងឱ្យបានជោគជ័យលើក្រុមដែលគ្មានជំនឿផង ។

فَهَزَمُوهُم بِإِذْنِ ٱللَّهِ وَقَتَلَ دَاوُۥدُ
جَالُوتَ وَءَاتَىٰهُ ٱللَّهُ ٱلْمُلْكَ وَٱلْحِكْمَةَ
وَعَلَّمَهُۥ مِمَّا يَشَآءُۗ وَلَوْلَا دَفْعُ ٱللَّهِ ٱلنَّاسَ
بَعْضَهُم بِبَعْضٍ لَّفَسَدَتِ ٱلْأَرْضُ
وَلَٰكِنَّ ٱللَّهَ ذُو فَضْلٍ عَلَى ٱلْعَٰلَمِينَ ﴿٢٥١﴾

២៥១-ហើយពួកគេក៏បានធ្វើឱ្យសត្រូវបរាជ័យដោយមានការអនុញ្ញាតពីអល់ឡោះ ហើយដាវូដក៏បានសម្លាប់ជើលូត ។ បន្ទាប់មកអល់ឡោះបានប្រទានតំណែងជាស្ដេច និងជាណាពីឱ្យទៅដាវូដ ព្រមទាំងបានបង្រៀនដល់គាត់អំពីអ្វីដែលទ្រង់មានចេតនា ។ ហើយប្រសិនបើគ្មានការទប់ស្កាត់របស់អល់ឡោះចំពោះមនុស្សលោកពីក្រុមមួយ(អ្នកមានជំនឿ)ទៅក្រុមមួយ(អ្នកគ្មានជំនឿ)ទេនោះ ប្រាកដជាផែនដីនេះត្រូវវិនាសអន្តរាយ តែអល់ឡោះមានក្ដីមេត្តាករុណាលើពិភពទាំងអស់ ។

تِلْكَ ءَايَٰتُ ٱللَّهِ نَتْلُوهَا عَلَيْكَ بِٱلْحَقِّۚ
وَإِنَّكَ لَمِنَ ٱلْمُرْسَلِينَ ﴿٢٥٢﴾

២៥២-ទាំងនេះគឺជាអាយ៉ាត់ៗរបស់អល់ឡោះដែលយើងសូត្រវាឱ្យអ្នក(មូហាំម៉ាត់)ស្ដាប់យ៉ាងពិតប្រាកដ ។ ហើយពិតប្រាកដណាស់ អ្នកគឺជាអ្នកនាំសារម្នាក់ក្នុងចំណោមអ្នកនាំសារទាំងឡាយ ។

۞ تِلْكَ ٱلرُّسُلُ فَضَّلْنَا بَعْضَهُمْ عَلَىٰ بَعْضٍ ۘ مِّنْهُم مَّن كَلَّمَ ٱللَّهُ ۖ وَرَفَعَ بَعْضَهُمْ دَرَجَٰتٍ ۚ وَءَاتَيْنَا عِيسَى ٱبْنَ مَرْيَمَ ٱلْبَيِّنَٰتِ وَأَيَّدْنَٰهُ بِرُوحِ ٱلْقُدُسِ ۗ وَلَوْ شَآءَ ٱللَّهُ مَا ٱقْتَتَلَ ٱلَّذِينَ مِنۢ بَعْدِهِم مِّنۢ بَعْدِ مَا جَآءَتْهُمُ ٱلْبَيِّنَٰتُ وَلَٰكِنِ ٱخْتَلَفُوا۟ فَمِنْهُم مَّنْ ءَامَنَ وَمِنْهُم مَّن كَفَرَ ۚ وَلَوْ شَآءَ ٱللَّهُ مَا ٱقْتَتَلُوا۟ وَلَٰكِنَّ ٱللَّهَ يَفْعَلُ مَا يُرِيدُ ﴿٢٥٣﴾

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓا۟ أَنفِقُوا۟ مِمَّا رَزَقْنَٰكُم مِّن قَبْلِ أَن يَأْتِىَ يَوْمٌ لَّا بَيْعٌ فِيهِ وَلَا خُلَّةٌ وَلَا شَفَٰعَةٌ ۗ وَٱلْكَٰفِرُونَ هُمُ ٱلظَّٰلِمُونَ ﴿٢٥٤﴾

ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ٱلْحَىُّ ٱلْقَيُّومُ ۚ لَا تَأْخُذُهُۥ سِنَةٌ وَلَا نَوْمٌ ۚ لَّهُۥ مَا فِى ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ ۗ مَن ذَا ٱلَّذِى يَشْفَعُ عِندَهُۥٓ إِلَّا بِإِذْنِهِۦ ۚ يَعْلَمُ مَا بَيْنَ أَيْدِيهِمْ وَمَا خَلْفَهُمْ ۖ وَلَا يُحِيطُونَ بِشَىْءٍ مِّنْ عِلْمِهِۦٓ إِلَّا بِمَا شَآءَ ۚ وَسِعَ كُرْسِيُّهُ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ ۖ وَلَا يَـُٔودُهُۥ حِفْظُهُمَا ۚ وَهُوَ ٱلْعَلِىُّ ٱلْعَظِيمُ ﴿٢٥٥﴾

២៥៣-បណ្ដាអ្នកនាំសារទាំងនោះ យើងបានលើកតម្កើងពួកគេឱ្យប្រសើរជាងគ្នា។ ក្នុងចំណោមពួកគេមានអ្នកខ្លះអល់ឡោះបានបន្ទូលជាមួយពួកគេផ្ទាល់ និងអ្នកខ្លះទៀតទ្រង់បានលើកតម្កើងឋានៈដល់ពួកគេ។ ហើយយើងបានប្រទានឱ្យអ៊ីសាកូនម៉ារយ៉ាំនូវមុជីហ្សាត់ជាច្រើន[1] ហើយយើងបានពង្រឹងរូបគេដោយជីព្រីល។ ហើយប្រសិនបើអល់ឡោះមានចេតនា ពួកជំនាន់ក្រោយពីអ្នកនាំសារទាំងនោះមិនកាប់សម្លាប់គ្នាឡើយបន្ទាប់ពីភស្តុតាងនានាបានមកដល់ពួកគេ។ ប៉ុន្តែពួកគេបានខ្វែងយោបល់គ្នា។ ហេតុនេះពួកគេខ្លះមានជំនឿ និងខ្លះទៀតគ្មានជំនឿ។ ហើយប្រសិនបើអល់ឡោះមានចេតនា ពួកគេប្រាកដជាមិនកាប់សម្លាប់គ្នាឡើយ។ ប៉ុន្តែអល់ឡោះធ្វើទៅតាមអ្វីដែលទ្រង់មានបំណង។

២៥៤-ឱបណ្ដាអ្នកមានជំនឿ! ចូរពួកអ្នកបរិច្ចាគមួយចំនួនអំពីអ្វីដែលយើងបានប្រទានឱ្យពួកអ្នកមុននឹងថ្ងៃមួយមកដល់ដែលក្នុងថ្ងៃនោះគ្មានការលក់ដូរ គ្មានមិត្តភក្ដិ និងគ្មានការអន្តរាគមន៍ឡើយ។ ហើយពួកប្រឆាំងគឺជាពួកដែលបំពាន។

២៥៥-អល់ឡោះតែមួយគត់ គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដផ្សេងពីទ្រង់ដែលរស់ជាអមតៈដែលជាអ្នកគ្រប់គ្រងឡើយ។ ទ្រង់មិនងងុយ ហើយក៏មិនគេងដែរ។ អ្វីៗដែលមាននៅលើមេឃជាច្រើនជាន់និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់។ គ្មានបុគ្គលណាម្នាក់ហ៊ានធ្វើអន្តរាគមន៍នៅចំពោះមុខអល់ឡោះឡើយ លើកលែងតែមានការអនុញ្ញាតពីទ្រង់ប៉ុណ្ណោះ។ ទ្រង់ដឹងនូវអ្វីដែលមាននៅពីមុខ និងនៅពីក្រោយពួកគេ។ ហើយពួកគេមិនដឹងអំពីការដឹងរបស់ទ្រង់ឡើយ លើកលែងតែអ្វីដែលទ្រង់មានចេតនាប៉ុណ្ណោះ។ ហើយកួរស៊ី[2] របស់ទ្រង់ទូលំទូលាយនៅលើមេឃជាច្រើនជាន់ និងផែនដី។ ហើយការថែរក្សាភពទាំងពីរនោះមិនធ្វើឱ្យទ្រង់លំបាក

---

១-ដូចជាធ្វើឱ្យអ្នកដែលពិការភ្នែកអាចមើលឃើញឡើងវិញ អ្នកដែលមានជម្ងឺឃ្លង់ជាសះស្បើយ ធ្វើឱ្យមនុស្សស្លាប់រស់រានមានជីវិតឡើងវិញជាដើម។

២-កួរស៊ី : កន្លែងដាក់ជើងរបស់អល់ឡោះ។

ឡើយ ។ ហើយទ្រង់មហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម ។

២៥៦-គ្មានការបង្ខិតបង្ខំឡើយនៅក្នុងសាសនាអ៊ីស្លាម ។ ពិតប្រាកដណាស់ ការពិតបានបង្ហាញច្បាស់ពីប្រការមិនពិត ។ ហេតុនេះ អ្នកណាដែលគ្មានជំនឿលើតហ្គូត[1] តែមានជំនឿលើអល់ឡោះនោះ គេប្រាកដជាបានប្រកាន់ខ្ជាប់នូវខ្សែដ៏រឹងមាំ(សាសនាអ៊ីស្លាម) ដោយមិនអាចកាត់ផ្តាច់បានឡើយ ។ ហើយអល់ឡោះមហាឮ មហាដឹង ។

២៥៧-អល់ឡោះជាអ្នកគាំពារបណ្តាអ្នកដែលមានជំនឿ ដោយទ្រង់បញ្ចេញពួកគេពីភាពងងឹត(គ្មានជំនឿ) ទៅកាន់ភាពមានពន្លឺ (មានជំនឿ) ។ រីឯពួកដែលគ្មានជំនឿវិញ អ្នកគាំពាររបស់ពួកគេ គឺតហ្គូតដែលពួកវាបញ្ចេញពួកគេពីភាពមានពន្លឺទៅកាន់ភាពងងឹតសូន្យសុង ។ ពួកទាំងនេះជាពួកនរកដែលពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។

២៥៨-តើអ្នក(មូហាំម៉ាត់) មិនបានដឹងទេឬអំពីអ្នក(ណាំរូត) ដែលបានដេញដោលសួរអ៊ីព្រហ៊ីមក្នុងរឿងម្ចាស់របស់គេដែលអល់ឡោះបានប្រទានអំណាចជាស្តេចដល់រូបគេ(ណាំរូត)? នៅពេលដែលអ៊ីព្រហ៊ីមបានពោលថាៈ ម្ចាស់របស់ខ្ញុំជាអ្នកប្រទានជីវិត និងដកហូតយកជីវិត ។ គេ(ណាំរូត) បានតបថាៈ យើងក៏ជាអ្នកប្រទានជីវិត និងដកហូតយកជីវិតដែរ ។ អ៊ីព្រហ៊ីមបានតបវិញថាៈ ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកឱ្យព្រះអាទិត្យចេញពីទិសខាងកើត ។ ដូច្នេះ ចូរអ្នកឱ្យព្រះអាទិត្យនេះចេញពីទិសខាងលិចមកវិញមើល! ពេលនោះអ្នកដែលប្រឆាំង(ណាំរូត) ក៏ទាល់តម្រិះ ។ ហើយអល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលបំពានឡើយ ។

២៥៩-ឬមួយដូចអ្នក(អ៊ូហ៊ែរ) ដែលបានឆ្លងកាត់ភូមិមួយដែលវាខ្ទេចខ្ទីអស់(មនុស្សនិងលំនៅដ្ឋាន) ។ គាត់បាននិយាយថាៈ តើអល់ឡោះនឹងបង្កើតឡើងវិញយ៉ាងដូចម្តេចទៅក្រោយពីការខ្ទេចខ្ទីរបស់វាហើយនោះ? ដូច្នេះអល់ឡោះបានធ្វើឱ្យគាត់ស្លាប់

لَآ إِكۡرَاهَ فِي ٱلدِّينِۖ قَد تَّبَيَّنَ ٱلرُّشۡدُ مِنَ ٱلۡغَيِّۚ فَمَن يَكۡفُرۡ بِٱلطَّٰغُوتِ وَيُؤۡمِنۢ بِٱللَّهِ فَقَدِ ٱسۡتَمۡسَكَ بِٱلۡعُرۡوَةِ ٱلۡوُثۡقَىٰ لَا ٱنفِصَامَ لَهَاۗ وَٱللَّهُ سَمِيعٌ عَلِيمٌ ٢٥٦

ٱللَّهُ وَلِيُّ ٱلَّذِينَ ءَامَنُواْ يُخۡرِجُهُم مِّنَ ٱلظُّلُمَٰتِ إِلَى ٱلنُّورِۖ وَٱلَّذِينَ كَفَرُوٓاْ أَوۡلِيَآؤُهُمُ ٱلطَّٰغُوتُ يُخۡرِجُونَهُم مِّنَ ٱلنُّورِ إِلَى ٱلظُّلُمَٰتِۗ أُوْلَٰٓئِكَ أَصۡحَٰبُ ٱلنَّارِۖ هُمۡ فِيهَا خَٰلِدُونَ ٢٥٧

أَلَمۡ تَرَ إِلَى ٱلَّذِي حَآجَّ إِبۡرَٰهِـۧمَ فِي رَبِّهِۦٓ أَنۡ ءَاتَىٰهُ ٱللَّهُ ٱلۡمُلۡكَ إِذۡ قَالَ إِبۡرَٰهِـۧمُ رَبِّيَ ٱلَّذِي يُحۡيِۦ وَيُمِيتُ قَالَ أَنَا۠ أُحۡيِۦ وَأُمِيتُۖ قَالَ إِبۡرَٰهِـۧمُ فَإِنَّ ٱللَّهَ يَأۡتِي بِٱلشَّمۡسِ مِنَ ٱلۡمَشۡرِقِ فَأۡتِ بِهَا مِنَ ٱلۡمَغۡرِبِ فَبُهِتَ ٱلَّذِي كَفَرَۗ وَٱللَّهُ لَا يَهۡدِي ٱلۡقَوۡمَ ٱلظَّٰلِمِينَ ٢٥٨

أَوۡ كَٱلَّذِي مَرَّ عَلَىٰ قَرۡيَةٖ وَهِيَ خَاوِيَةٌ عَلَىٰ عُرُوشِهَا قَالَ أَنَّىٰ يُحۡيِۦ هَٰذِهِ ٱللَّهُ بَعۡدَ مَوۡتِهَاۖ فَأَمَاتَهُ ٱللَّهُ مِاْئَةَ عَامٖ ثُمَّ بَعَثَهُۥۖ قَالَ

១-តហ្គូត : អ្វី១ដែលគេគោរពសក្ការៈក្រៅពីអល់ឡោះ ។

كَمۡ لَبِثۡتَۖ قَالَ لَبِثۡتُ يَوۡمًا أَوۡ بَعۡضَ يَوۡمٖۖ
قَالَ بَل لَّبِثۡتَ مِاْئَةَ عَامٖ فَٱنظُرۡ إِلَىٰ
طَعَامِكَ وَشَرَابِكَ لَمۡ يَتَسَنَّهۡۖ وَٱنظُرۡ إِلَىٰ
حِمَارِكَ وَلِنَجۡعَلَكَ ءَايَةٗ لِّلنَّاسِۖ
وَٱنظُرۡ إِلَى ٱلۡعِظَامِ كَيۡفَ نُنشِزُهَا ثُمَّ
نَكۡسُوهَا لَحۡمٗاۚ فَلَمَّا تَبَيَّنَ لَهُۥ قَالَ أَعۡلَمُ
أَنَّ ٱللَّهَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ﴿٢٥٩﴾

រយៈពេលមួយរយឆ្នាំ ក្រោយមកអល់ឡោះបានប្រោសគាត់ឡើងវិញរួចសួរថា: តើអ្នកនៅទីនេះរយៈពេលប៉ុន្មានហើយ? គាត់ឆ្លើយថា: ខ្ញុំនៅទីនេះរយៈពេលមួយថ្ងៃ ឬតិចជាងមួយថ្ងៃ។ អល់ឡោះតបវិញថា: តាមពិតអ្នកនៅទីនេះរយៈពេលមួយរយឆ្នាំហើយ។ ចូរអ្នកមើលទៅម្ហូបអាហារនិងភេសជ្ជៈរបស់អ្នកចុះវាមិនប្រែប្រួលទេ។ហើយចូរអ្នកមើលទៅសត្វលារបស់អ្នក (តើអល់ឡោះធ្វើឱ្យវារស់ឡើងវិញយ៉ាងដូចម្ដេចបន្ទាប់ពីឆ្អឹងរបស់វារាយប៉ាយ អស់ហើយនោះ)។ ហើយធ្វើដូច្នេះ គឺដើម្បីយើងយកអ្នកធ្វើជាភស្តុតាងសម្រាប់មនុស្សលោក។ ហើយចូរអ្នកមើលទៅឆ្អឹង តើយើងរៀបវាភ្ជាប់គ្នាវិញយ៉ាងដូចម្ដេច?បន្ទាប់មកយើងស្រោបវាដោយសាច់វិញនោះយ៉ាងដូចម្ដេច? ហើយនៅពេលដែលភាព ជាក់ស្ដែងបានបង្ហាញចំពោះគាត់គាត់ក៏បាននិយាយថា: (ពេលនេះ)ខ្ញុំដឹងថាពិតប្រាកដណាស់អល់ឡោះមានអានុភាពលើអ្វីៗ ទាំងអស់។

وَإِذۡ قَالَ إِبۡرَٰهِـۧمُ رَبِّ أَرِنِي كَيۡفَ تُحۡيِ
ٱلۡمَوۡتَىٰۖ قَالَ أَوَلَمۡ تُؤۡمِنۖ قَالَ بَلَىٰ وَلَٰكِن
لِّيَطۡمَئِنَّ قَلۡبِيۖ قَالَ فَخُذۡ أَرۡبَعَةٗ مِّنَ ٱلطَّيۡرِ
فَصُرۡهُنَّ إِلَيۡكَ ثُمَّ ٱجۡعَلۡ عَلَىٰ كُلِّ جَبَلٖ
مِّنۡهُنَّ جُزۡءٗا ثُمَّ ٱدۡعُهُنَّ يَأۡتِينَكَ سَعۡيٗاۚ وَٱعۡلَمۡ
أَنَّ ٱللَّهَ عَزِيزٌ حَكِيمٞ ﴿٢٦٠﴾

២៦០-ហើយ(ចូរចងចាំ)នៅពេលដែលអ៊ីព្រហ៊ីមបានពោលថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាបង្ហាញឱ្យខ្ញុំឃើញផង ថាតើទ្រង់ប្រោសអ្នកដែលស្លាប់ដោយរបៀបណា? អល់ឡោះបានមានបន្ទូលថា: តើអ្នកមិនទាន់ជឿទេឬ? អ៊ីព្រហ៊ីមឆ្លើយថា: មិនមែនទេ! តែដើម្បីឱ្យចិត្តរបស់ខ្ញុំកាន់តែជឿជាក់ថែមទៀត។ អល់ឡោះបានមានបន្ទូលថា: ចូរអ្នកយកបក្សីបួនក្បាល ហើយប្រមូលពួកវា(ចិញ្ច្រាំបញ្ចូលគ្នាឱ្យខ្ទេច) រួចយកបំណែកនីមួយៗអំពីសាច់នោះទៅដាក់តាមភ្នំផ្សេងៗគ្នា បន្ទាប់មកចូរអ្នកស្រែកហៅពួកវាចុះពួកវាពិតជានឹងហើរមកកាន់អ្នកវិញភ្លាម។ ហើយអ្នកត្រូវដឹងថាពិតប្រាកដណាស់អល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

مَّثَلُ ٱلَّذِينَ يُنفِقُونَ أَمۡوَٰلَهُمۡ فِي سَبِيلِ ٱللَّهِ
كَمَثَلِ حَبَّةٍ أَنۢبَتَتۡ سَبۡعَ سَنَابِلَ فِي كُلِّ
سُنۢبُلَةٖ مِّاْئَةُ حَبَّةٖۗ وَٱللَّهُ يُضَٰعِفُ لِمَن يَشَآءُۚ
وَٱللَّهُ وَٰسِعٌ عَلِيمٌ ﴿٢٦١﴾

២៦១-ការប្រៀបធៀបបណ្ដាអ្នកដែលបរិច្ចាគទ្រព្យសម្បត្តិរបស់ពួកគេក្នុងមាគ៌ាអល់ឡោះ ប្រៀបដូចជាធញ្ញជាតិមួយគ្រាប់ដែលបានដុះចេញជាប្រាំពីរកួរ ហើយនៅក្នុងកួរនីមួយៗមានមួយរយគ្រាប់។ ហើយអល់ឡោះនឹងបន្ថែមឱ្យលើសពីនេះចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយអល់ឡោះមហាទូលំទូលាយ មហាដឹង។

២៦២-បណ្ដាអ្នកដែលបរិច្ចាគទ្រព្យសម្បត្តិរបស់ពួកគេក្នុងមាគ៌ាអល់ឡោះ ក្រោយមកពួកគេមិនបាននាំមកជាមួយអ្វីដែលពួកគេបានបរិច្ចាគនោះនូវការរំលើក និងបញ្ឈឺចិត្ត( អ្នកទទួល) ទេនោះ ពួកគេនឹងទទួលបានផលបុណ្យពីម្ចាស់របស់ពួកគេ ហើយពួកគេគ្មានការភ័យខ្លាច និងព្រួយបារម្ភអ្វីឡើយ ។

២៦៣-ពាក្យសំដីល្អ និងការសន្ដោសប្រណីនោះប្រសើរជាងការបរិច្ចាគដែលភ្ជាប់ជាមួយនូវការបញ្ឈឺចិត្ត( ដល់អ្នកទទួល) ។ ហើយអល់ឡោះមហាមានស្ដុកស្ដម្ភ មហាអត់ធ្មត់ ។

២៦៤-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរកុំបំផ្លាញ( ផលបុណ្យនៃ) ការបរិច្ចាគរបស់ពួកអ្នកដោយការរំលើក និងបញ្ឈឺចិត្ត( ដល់អ្នកទទួល) ដូចអ្នកដែលបរិច្ចាគទ្រព្យសម្បត្តិរបស់គេដើម្បីបង្ហាញឱ្យមនុស្សឃើញ ហើយគេមិនជឿលើអល់ឡោះ និងថ្ងៃបរលោកឱ្យសោះ ។ ដូច្នេះ ការប្រៀបធៀបគេដូចជាថ្មរលោងមួយដុំដែលមានដីជាប់ពីលើវា រួចភ្លៀងបានធ្លាក់យ៉ាងខ្លាំងមកលើថ្មនោះធ្វើឱ្យថ្មនោះរលោងវិញ ។ ពួកគេមិនអាចទទួលបានផលបុណ្យពីអ្វីដែលពួកគេបានបរិច្ចាគនោះឡើយ ។ ហើយអល់ឡោះមិនចង្អុលបង្ហាញដល់ក្រុមដែលប្រឆាំងឡើយ ។

២៦៥-ហើយការប្រៀបធៀបបណ្ដាអ្នកដែលបរិច្ចាគទ្រព្យសម្បត្តិរបស់ពួកគេដើម្បីស្វែងរកការយល់ព្រមពីអល់ឡោះ និងការជឿជាក់ដោយខ្លួនពួកគេផ្ទាល់( ទទួលផលបុណ្យ) គឺប្រៀបដូចជាចំការមួយនៅតំបន់ខ្ពង់រាបដែលបានស្រោចស្រពដោយទឹកភ្លៀងយ៉ាងខ្លាំង ពេលនោះវាក៏ផ្ដល់ផលានុផលទ្វេដង ។ តែបើគ្មានទឹកភ្លៀងខ្លាំងស្រោចស្រពមកទេ មានភ្លៀងតិចៗក៏គ្រប់គ្រាន់ដែរ ។ ហើយអល់ឡោះមហាឃើញនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

២៦៦-តើអ្នកណាក្នុងចំណោមពួកអ្នកចង់បានចំការល្វើ និងទំពាំងបាយជូរដែលមានទន្លេហូរកាត់ពីក្រោមវា ។ នៅក្នុងចំការនោះសំបូរដោយផលានុផលសម្រាប់ជននោះ ។ ហើយនៅពេលជននោះចាស់ជរា និងមានកូនចៅតូចៗជាច្រើន ស្រាប់តែចំការ

ٱلَّذِينَ يُنفِقُونَ أَمْوَٰلَهُمْ فِى سَبِيلِ ٱللَّهِ ثُمَّ لَا يُتْبِعُونَ مَآ أَنفَقُوا۟ مَنًّا وَلَآ أَذًى ۙ لَّهُمْ أَجْرُهُمْ عِندَ رَبِّهِمْ وَلَا خَوْفٌ عَلَيْهِمْ وَلَا هُمْ يَحْزَنُونَ ﴿٢٦٢﴾

قَوْلٌ مَّعْرُوفٌ وَمَغْفِرَةٌ خَيْرٌ مِّن صَدَقَةٍ يَتْبَعُهَآ أَذًى ۗ وَٱللَّهُ غَنِىٌّ حَلِيمٌ ﴿٢٦٣﴾

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ لَا تُبْطِلُوا۟ صَدَقَٰتِكُم بِٱلْمَنِّ وَٱلْأَذَىٰ كَٱلَّذِى يُنفِقُ مَالَهُۥ رِئَآءَ ٱلنَّاسِ وَلَا يُؤْمِنُ بِٱللَّهِ وَٱلْيَوْمِ ٱلْءَاخِرِ ۖ فَمَثَلُهُۥ كَمَثَلِ صَفْوَانٍ عَلَيْهِ تُرَابٌ فَأَصَابَهُۥ وَابِلٌ فَتَرَكَهُۥ صَلْدًا ۖ لَّا يَقْدِرُونَ عَلَىٰ شَىْءٍ مِّمَّا كَسَبُوا۟ ۗ وَٱللَّهُ لَا يَهْدِى ٱلْقَوْمَ ٱلْكَٰفِرِينَ ﴿٢٦٤﴾

وَمَثَلُ ٱلَّذِينَ يُنفِقُونَ أَمْوَٰلَهُمُ ٱبْتِغَآءَ مَرْضَاتِ ٱللَّهِ وَتَثْبِيتًا مِّنْ أَنفُسِهِمْ كَمَثَلِ جَنَّةٍۭ بِرَبْوَةٍ أَصَابَهَا وَابِلٌ فَـَٔاتَتْ أُكُلَهَا ضِعْفَيْنِ فَإِن لَّمْ يُصِبْهَا وَابِلٌ فَطَلٌّ ۗ وَٱللَّهُ بِمَا تَعْمَلُونَ بَصِيرٌ ﴿٢٦٥﴾

أَيَوَدُّ أَحَدُكُمْ أَن تَكُونَ لَهُۥ جَنَّةٌ مِّن نَّخِيلٍ وَأَعْنَابٍ تَجْرِى مِن تَحْتِهَا ٱلْأَنْهَٰرُ لَهُۥ فِيهَا مِن كُلِّ ٱلثَّمَرَٰتِ وَأَصَابَهُ ٱلْكِبَرُ

وَلَهُۥ ذُرِّيَّةٌ ضُعَفَآءُ فَأَصَابَهَآ إِعۡصَارٌ فِيهِ نَارٌ
فَٱحۡتَرَقَتۡۗ كَذَٰلِكَ يُبَيِّنُ ٱللَّهُ لَكُمُ
ٱلۡأٓيَٰتِ لَعَلَّكُمۡ تَتَفَكَّرُونَ ﴿٢٦٦﴾

នោះត្រូវទទួលរងនូវព្យុះភ្លើងបក់បោកឆេះខ្ទេចខ្ទីអស់។ ដូច្នេះដែរ អល់ឡោះបញ្ជាក់ប្រាប់ពួកអ្នកនូវភស្តុតាងទាំងឡាយដើម្បីឱ្យពួកអ្នកពិចារណា។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ أَنفِقُواْ مِن طَيِّبَٰتِ مَا
كَسَبۡتُمۡ وَمِمَّآ أَخۡرَجۡنَا لَكُم مِّنَ ٱلۡأَرۡضِۖ
وَلَا تَيَمَّمُواْ ٱلۡخَبِيثَ مِنۡهُ تُنفِقُونَ وَلَسۡتُم
بِـَٔاخِذِيهِ إِلَّآ أَن تُغۡمِضُواْ فِيهِۚ وَٱعۡلَمُوٓاْ أَنَّ
ٱللَّهَ غَنِيٌّ حَمِيدٌ ﴿٢٦٧﴾

២៦៧-ឱបណ្តាអ្នកដែលមានជំនឿ! ចូរបរិច្ចាគទ្រព្យសម្បត្តិល្អ(ស្របច្បាប់)មួយចំនួនដែលពួកអ្នករកបាន និងមួយចំណែកនៃភោគផលដែលយើងបានបញ្ចេញពីដីសម្រាប់ពួកអ្នក។ ហើយពួកអ្នកមិនត្រូវជ្រើសរើសអ្វីដែលអាក្រក់អំពីទ្រព្យនោះដើម្បីបរិច្ចាគនោះឡើយ។(ប្រសិនបើគេឱ្យអ្វីដែលមិនល្អដល់ពួកអ្នកវិញ) ហើយពួកអ្នកក៏មិនទទួលយកវាដែរ លើកលែងតែពួកអ្នកទទួលយកវាទាំងបិទភ្នែកប៉ុណ្ណោះ។ ហើយពួកអ្នកត្រូវដឹងថា: ពិតប្រាកដណាស់ អល់ឡោះមហាមានស្តុកស្តម្ភជាទីកោតសរសើរបំផុត។

ٱلشَّيۡطَٰنُ يَعِدُكُمُ ٱلۡفَقۡرَ وَيَأۡمُرُكُم
بِٱلۡفَحۡشَآءِۖ وَٱللَّهُ يَعِدُكُم مَّغۡفِرَةً مِّنۡهُ
وَفَضۡلٗاۗ وَٱللَّهُ وَٰسِعٌ عَلِيمٌ ﴿٢٦٨﴾

២៦៨-ស្ហៃតនបំភ័យពួកអ្នកពីភាពក្រីក្រ(ដោយសារការបរិច្ចាគទាន)និងជំរុញពួកអ្នកឱ្យប្រព្រឹត្តអំពើអាក្រក់។ ចំណែកអល់ឡោះសន្យានឹងពួកអ្នក(ដោយសារការបរិច្ចាគទាន)នូវការលើកលែងទោសអំពីទ្រង់ និងតបស្នងដ៏លើសលប់។ ហើយអល់ឡោះមហាទូលំទូលាយ មហាដឹង។

يُؤۡتِي ٱلۡحِكۡمَةَ مَن يَشَآءُۚ وَمَن يُؤۡتَ
ٱلۡحِكۡمَةَ فَقَدۡ أُوتِيَ خَيۡرٗا كَثِيرٗاۗ
وَمَا يَذَّكَّرُ إِلَّآ أُوْلُواْ ٱلۡأَلۡبَٰبِ ﴿٢٦٩﴾

២៦៩-អល់ឡោះប្រទានភាពឈ្លាសវៃដល់អ្នកណាដែលទ្រង់មានចេតនា។ ហើយអ្នកណាដែលត្រូវបានគេប្រទានឱ្យនូវភាពឈ្លាសវៃ អ្នកនោះប្រាកដជាត្រូវគេប្រទានឱ្យនូវកុសលដ៏ច្រើនលើសលប់។ ហើយការក្រើនរំលឹកគ្មានប្រយោជន៍ឡើយ លើកលែងតែពួកបញ្ញាជនប៉ុណ្ណោះ។

وَمَآ أَنفَقۡتُم مِّن نَّفَقَةٍ أَوۡ نَذَرۡتُم مِّن نَّذۡرٖ
فَإِنَّ ٱللَّهَ يَعۡلَمُهُۥۗ وَمَا لِلظَّٰلِمِينَ
مِنۡ أَنصَارٍ ﴿٢٧٠﴾

២៧០-ហើយអ្វីក៏ដោយដែលពួកអ្នកបានបរិច្ចាគ ឬអ្វីដែលពួកអ្នកបានសច្ចានោះ គឺអល់ឡោះពិតជាដឹងអំពីវា។ ហើយចំពោះពួកដែលបំពានពុំមានអ្នកជួយឡើយ។

إِن تُبۡدُواْ ٱلصَّدَقَٰتِ فَنِعِمَّا هِيَۖ وَإِن
تُخۡفُوهَا وَتُؤۡتُوهَا ٱلۡفُقَرَآءَ فَهُوَ خَيۡرٞ لَّكُمۡۚ

២៧១-ប្រសិនបើពួកអ្នកលាតត្រដាងនូវការបរិច្ចាគទានទាំងឡាយគឺជាការល្អ។ តែប្រសិនបើពួកអ្នកលាក់កំបាំងការបរិច្ចាគ និងផ្តល់វាដល់អ្នកក្រីក្រនោះ វាគឺជាការប្រសើរបំផុតសម្រាប់ពួកអ្នក។

وَيُكَفِّرُ عَنكُم مِّن سَيِّـَٔاتِكُمۡۗ وَٱللَّهُ بِمَا
تَعۡمَلُونَ خَبِيرٞ ٢٧١

ហើយអល់ឡោះនឹងលុបលាងបាបកម្មនានារបស់ពួកអ្នក។ ហើយអល់ឡោះមហាដឹងនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

لَّيۡسَ عَلَيۡكَ هُدَىٰهُمۡ وَلَٰكِنَّ ٱللَّهَ يَهۡدِي
مَن يَشَآءُۗ وَمَا تُنفِقُواْ مِنۡ خَيۡرٖ
فَلِأَنفُسِكُمۡۚ وَمَا تُنفِقُونَ إِلَّا ٱبۡتِغَآءَ
وَجۡهِ ٱللَّهِۚ وَمَا تُنفِقُواْ مِنۡ خَيۡرٖ يُوَفَّ إِلَيۡكُمۡ
وَأَنتُمۡ لَا تُظۡلَمُونَ ٢٧٢

២៧២-ពុំមែនជាកាតព្វកិច្ចរបស់អ្នក(មូហាំម៉ាត់)ក្នុងការចង្អុលបង្ហាញដល់ពួកគេ(ពួកគ្មានជំនឿ)នោះទេ។ ក៏ប៉ុន្តែអល់ឡោះចង្អុលបង្ហាញចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយអ្វីដែលពួកអ្នកបរិច្ចាគអំពីទ្រព្យសម្បត្តិដែលល្អគឺសម្រាប់ពួកអ្នកផ្ទាល់។ ហើយពួកអ្នកមិនបរិច្ចាគឡើយ លើកលែងតែដើម្បីស្វែងរកការយល់ព្រមពីអល់ឡោះប៉ុណ្ណោះ។ ហើយអ្វីដែលពួកអ្នកបរិច្ចាគអំពីទ្រព្យសម្បត្តិដែលល្អ អល់ឡោះប្រាកដជាបំពេញផលបុណ្យចំពោះពួកអ្នកវិញ ដោយពួកអ្នកនឹងមិនត្រូវគេបំពានឡើយ។

لِلۡفُقَرَآءِ ٱلَّذِينَ أُحۡصِرُواْ فِي سَبِيلِ ٱللَّهِ
لَا يَسۡتَطِيعُونَ ضَرۡبٗا فِي ٱلۡأَرۡضِ
يَحۡسَبُهُمُ ٱلۡجَاهِلُ أَغۡنِيَآءَ مِنَ ٱلتَّعَفُّفِ
تَعۡرِفُهُم بِسِيمَٰهُمۡ لَا يَسۡـَٔلُونَ ٱلنَّاسَ
إِلۡحَافٗاۗ وَمَا تُنفِقُواْ مِنۡ خَيۡرٖ فَإِنَّ ٱللَّهَ بِهِۦ
عَلِيمٌ ٢٧٣

២៧៣-(ចូរពួកអ្នកបរិច្ចាគទាន)សម្រាប់អ្នកក្រីក្រដែលបានតស៊ូក្នុងមាគ៌ារបស់អល់ឡោះ ដោយពួកគេមិនអាចស្វែងរកលាភសក្ការៈនៅលើផែនដីបានធ្វើឱ្យអ្នកដែលមិនដឹងនឹកស្មានថា ពួកគេគឺជាអ្នកមានដោយសារតែពួកគេមិនសុំទាន។ អ្នកស្គាល់ពួកគេតាមរយៈសញ្ញារបស់ពួកគេ ដោយពួកគេមិនសុំពីមនុស្សលោកដដែលៗនោះទេ។ ហើយអ្វីដែលពួកអ្នកបរិច្ចាគអំពីទ្រព្យសម្បត្តិដែលល្អនោះ ពិតប្រាកដណាស់អល់ឡោះដឹងបំផុតចំពោះវា។

ٱلَّذِينَ يُنفِقُونَ أَمۡوَٰلَهُم بِٱلَّيۡلِ وَٱلنَّهَارِ
سِرّٗا وَعَلَانِيَةٗ فَلَهُمۡ أَجۡرُهُمۡ عِندَ رَبِّهِمۡ وَلَا
خَوۡفٌ عَلَيۡهِمۡ وَلَا هُمۡ يَحۡزَنُونَ ٢٧٤

២៧៤-បណ្តាអ្នកដែលបរិច្ចាគទ្រព្យសម្បត្តិរបស់ពួកគេទាំងពេលយប់និងពេលថ្ងៃដោយលាក់កំបាំងនិងចំហ ពួកគេពិតជានឹងទទួលបានផលបុណ្យពីម្ចាស់របស់ពួកគេ ហើយពួកគេគ្មានការភ័យខ្លាច និងព្រួយបារម្ភអ្វីឡើយ។

ٱلَّذِينَ يَأۡكُلُونَ ٱلرِّبَوٰاْ لَا يَقُومُونَ إِلَّا
كَمَا يَقُومُ ٱلَّذِي يَتَخَبَّطُهُ ٱلشَّيۡطَٰنُ مِنَ
ٱلۡمَسِّۚ ذَٰلِكَ بِأَنَّهُمۡ قَالُوٓاْ إِنَّمَا ٱلۡبَيۡعُ مِثۡلُ
ٱلرِّبَوٰاْۗ وَأَحَلَّ ٱللَّهُ ٱلۡبَيۡعَ وَحَرَّمَ ٱلرِّبَوٰاْۚ فَمَن
جَآءَهُۥ مَوۡعِظَةٞ مِّن رَّبِّهِۦ فَٱنتَهَىٰ فَلَهُۥ مَا

២៧៥-ពួកដែលស៊ីការប្រាក់នោះ ពួកគេមិនអាចក្រោកឈរបានទេ(នៅថ្ងៃបរលោក) លើកលែងតែគេក្រោកឈរដូចអ្នកដែលស្ហៃតនចូលដែលធ្វើឱ្យគេឆ្កួតប៉ុណ្ណោះ។ នោះដោយសារតែពួកគេបានអះអាងថាៈ ពិតប្រាកដណាស់ ការលក់ដូរនោះវាដូចជាការយកការប្រាក់ដែរ ។ ប៉ុន្តែអល់ឡោះបានអនុញ្ញាតចំពោះការលក់ដូរ ហើយទ្រង់បានហាមឃាត់អំពីការយកការប្រាក់។ ហើយអ្នកណា

ដែលទទួលបាននូវការទូន្មានពីម្ចាស់របស់គេ ហើយគេបោះបង់ចោល(ឈប់យកការប្រាក់) ដូច្នេះអ្វីដែលមានពីមុន(មុនទូន្មានមកដល់)គឺជាកម្មសិទ្ធិរបស់គេ ហើយរឿងរ៉ាវរបស់គេគឺអាស្រ័យលើអល់ឡោះ ។ រីឯអ្នកណាបានត្រឡប់ទៅ(ស៊ីការប្រាក់)វិញ ពួកទាំងនោះជាពួកនរក ។ ពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។

سَلَفَ وَأَمۡرُهُۥٓ إِلَى ٱللَّهِۖ وَمَنۡ عَادَ فَأُوْلَٰٓئِكَ
أَصۡحَٰبُ ٱلنَّارِۖ هُمۡ فِيهَا خَٰلِدُونَ ٢٧٥

២៧៦-អល់ឡោះបំបាត់ភាពរីកចំរើនចំពោះការប្រាក់ ។ ប៉ុន្តែទ្រង់បង្កើនផលចំពោះទ្រព្យបរិច្ចាគនានា ។ ហើយអល់ឡោះមិនស្រឡាញ់រាល់អ្នកដែលប្រឆាំង និងអ្នកដែលសាងបាបកម្មនោះឡើយ ។

يَمۡحَقُ ٱللَّهُ ٱلرِّبَوٰاْ وَيُرۡبِي ٱلصَّدَقَٰتِۗ وَٱللَّهُ لَا
يُحِبُّ كُلَّ كَفَّارٍ أَثِيمٍ ٢٧٦

២៧៧-ពិតប្រាកដណាស់ បណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អ និងបានប្រតិបត្តិសឡាត ព្រមទាំងបរិច្ចាគហ្សាកាត់ ពួកគេពិតជានឹងទទួលបានផលបុណ្យពីម្ចាស់របស់ពួកគេ ហើយពួកគេគ្មានការភ័យខ្លាចនិងព្រួយបារម្ភអ្វីឡើយ ។

إِنَّ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ
وَأَقَامُواْ ٱلصَّلَوٰةَ وَءَاتَوُاْ ٱلزَّكَوٰةَ لَهُمۡ
أَجۡرُهُمۡ عِندَ رَبِّهِمۡ وَلَا خَوۡفٌ عَلَيۡهِمۡ وَلَا
هُمۡ يَحۡزَنُونَ ٢٧٧

២៧៨-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងបោះបង់ចោលនូវអ្វីដែលនៅសេសសល់ពីការប្រាក់ (ដែលគេជំពាក់) ប្រសិនបើពួកអ្នកជាអ្នកមានជំនឿនោះ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ وَذَرُواْ مَا
بَقِيَ مِنَ ٱلرِّبَوٰٓاْ إِن كُنتُم مُّؤۡمِنِينَ ٢٧٨

២៧៩-ហើយប្រសិនបើពួកអ្នកមិនព្រមបោះបង់ចោល(ការ-ប្រាក់)ទេ ពួកអ្នកត្រូវដឹងថា នឹងមានសង្គ្រាមមកពីអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់[១] ។ តែប្រសិនបើពួកអ្នកបោះបង់ចោល(ការ-ប្រាក់)សម្រាប់ពួកអ្នកគឺប្រាក់ដើមរបស់ពួកអ្នក ។ (ការធ្វើដូច្នេះ) ពួកអ្នកមិនបំពានលើគេ ហើយគេក៏មិនបំពានលើពួកអ្នកដែរ ។

فَإِن لَّمۡ تَفۡعَلُواْ فَأۡذَنُواْ بِحَرۡبٖ مِّنَ ٱللَّهِ
وَرَسُولِهِۦۖ وَإِن تُبۡتُمۡ فَلَكُمۡ رُءُوسُ
أَمۡوَٰلِكُمۡ لَا تَظۡلِمُونَ
وَلَا تُظۡلَمُونَ ٢٧٩

២៨០-ហើយប្រសិនបើគេគ្មានលទ្ធភាពសង ចូរពួកអ្នកពន្យារពេលរហូតគេមានលទ្ធភាព ។ ប៉ុន្តែបើពួកអ្នកបរិច្ចាគវិញនោះ គឺជាការប្រសើរបំផុតសម្រាប់ពួកអ្នកប្រសិនបើពួកអ្នកដឹង ។

وَإِن كَانَ ذُو عُسۡرَةٖ فَنَظِرَةٌ إِلَىٰ مَيۡسَرَةٖۚ
وَأَن تَصَدَّقُواْ خَيۡرٞ لَّكُمۡۖ إِن كُنتُمۡ
تَعۡلَمُونَ ٢٨٠

១-តំរូវឱ្យមេដឹកនាំអ៊ិស្លាមមានវិធានការជាមួយពួកអ្នកដែលស៊ីការប្រាក់ លុះត្រាពួកគេបោះបង់ ។

وَٱتَّقُواْ يَوۡمٗا تُرۡجَعُونَ فِيهِ إِلَى ٱللَّهِۖ ثُمَّ
تُوَفَّىٰ كُلُّ نَفۡسٖ مَّا كَسَبَتۡ وَهُمۡ لَا
يُظۡلَمُونَ ٢٨١

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا تَدَايَنتُم بِدَيۡنٍ إِلَىٰٓ
أَجَلٖ مُّسَمّٗى فَٱكۡتُبُوهُۚ وَلۡيَكۡتُب بَّيۡنَكُمۡ
كَاتِبُۢ بِٱلۡعَدۡلِۚ وَلَا يَأۡبَ كَاتِبٌ أَن يَكۡتُبَ
كَمَا عَلَّمَهُ ٱللَّهُۚ فَلۡيَكۡتُبۡ وَلۡيُمۡلِلِ ٱلَّذِي
عَلَيۡهِ ٱلۡحَقُّ وَلۡيَتَّقِ ٱللَّهَ رَبَّهُۥ وَلَا يَبۡخَسۡ مِنۡهُ
شَيۡـٔٗاۚ فَإِن كَانَ ٱلَّذِي عَلَيۡهِ ٱلۡحَقُّ سَفِيهًا أَوۡ
ضَعِيفًا أَوۡ لَا يَسۡتَطِيعُ أَن يُمِلَّ هُوَ فَلۡيُمۡلِلۡ
وَلِيُّهُۥ بِٱلۡعَدۡلِۚ وَٱسۡتَشۡهِدُواْ شَهِيدَيۡنِ مِن
رِّجَالِكُمۡۖ فَإِن لَّمۡ يَكُونَا رَجُلَيۡنِ فَرَجُلٞ
وَٱمۡرَأَتَانِ مِمَّن تَرۡضَوۡنَ مِنَ ٱلشُّهَدَآءِ أَن
تَضِلَّ إِحۡدَىٰهُمَا فَتُذَكِّرَ إِحۡدَىٰهُمَا
ٱلۡأُخۡرَىٰۚ وَلَا يَأۡبَ ٱلشُّهَدَآءُ إِذَا مَا دُعُواْۚ
وَلَا تَسۡـَٔمُوٓاْ أَن تَكۡتُبُوهُ صَغِيرًا أَوۡ كَبِيرًا
إِلَىٰٓ أَجَلِهِۦۚ ذَٰلِكُمۡ أَقۡسَطُ عِندَ ٱللَّهِ وَأَقۡوَمُ
لِلشَّهَٰدَةِ وَأَدۡنَىٰٓ أَلَّا تَرۡتَابُوٓاْۖ إِلَّآ أَن تَكُونَ
تِجَٰرَةً حَاضِرَةٗ تُدِيرُونَهَا بَيۡنَكُمۡ فَلَيۡسَ
عَلَيۡكُمۡ جُنَاحٌ أَلَّا تَكۡتُبُوهَاۗ وَأَشۡهِدُوٓاْ إِذَا
تَبَايَعۡتُمۡۚ وَلَا يُضَآرَّ كَاتِبٞ وَلَا شَهِيدٞۚ وَإِن
تَفۡعَلُواْ فَإِنَّهُۥ فُسُوقُۢ بِكُمۡۗ وَٱتَّقُواْ ٱللَّهَۖ

២៨១-ហើយចូរពួកអ្នកខ្លាចថ្ងៃមួយ ដែលនៅថ្ងៃនោះ គេនឹងនាំពួកអ្នកវិលត្រឡប់ទៅជួបអល់ឡោះវិញ។ បន្ទាប់មកគេនឹងតបស្នងដល់បុគ្គលម្នាក់ៗតាមអ្វីដែលគេបានប្រព្រឹត្ត ហើយពួកគេមិនត្រូវបានគេបំពានឡើយ។

២៨២-ឱបណ្តាអ្នកដែលមានជំនឿ នៅពេលដែលពួកអ្នកខ្ចីគ្នាទៅវិញទៅមក រហូតដល់ពេលកំណត់ណាមួយ ចូរពួកអ្នកកត់ត្រាវា។ ហើយចូរឱ្យអ្នកកត់ត្រា កត់ត្រាដោយយុត្តិធម៌រវាងពួកអ្នក។ ហើយអ្នកកត់ត្រាមិនត្រូវបដិសេធក្នុងការកត់ត្រាដូចអ្វីដែលអល់ឡោះបានបង្រៀនគេឡើយ។ ដូច្នេះ ចូរឱ្យគេនោះកត់ត្រា ហើយចូរឱ្យអ្នកខ្ចីបញ្ជាក់ប្រាប់(នូវអ្វីដែលត្រូវកត់ត្រា)។ ហើយចូរឱ្យគេ(អ្នកខ្ចី)កោតខ្លាចអល់ឡោះជាម្ចាស់របស់គេ ហើយគេមិនត្រូវតែបំបាត់អ្វីមួយពីបំណុលឡើយ។ ហើយប្រសិនបើអ្នកខ្ចីនោះជាមនុស្សល្ងង់ ឬទន់ខ្សោយ ឬអសមត្ថភាពក្នុងការបញ្ជាក់ប្រាប់ ចូរឱ្យអាណាព្យាបាលរបស់គេបញ្ជាក់ប្រាប់ដោយយុត្តិធម៌(ដល់អ្នកកត់ត្រា)។ ហើយចូរពួកអ្នកស្វែងរកសាក្សីពីរនាក់ដែលជាបុរសក្នុងចំណោមពួកអ្នក។ តែបើគ្មានបុរសពីរនាក់ទេគឺបុរសម្នាក់ និងស្ត្រីពីរនាក់ក្នុងចំណោមសាក្សីដែលពួកអ្នកយល់ព្រម។ (ការជ្រើសយកស្ត្រីពីរនាក់បែបនេះ) បើម្នាក់ក្នុងចំណោមគេទាំងពីរភ្លេចគឺម្នាក់ទៀតរំលឹក។ ហើយសាក្សីទាំងឡាយមិនត្រូវបដិសេធនៅពេលគេសំណូមពរពួកគេ(ឱ្យធ្វើជាសាក្សី)ឡើយ។ ហើយចូរពួកអ្នកកុំធុញទ្រាន់ក្នុងការកត់ត្រាបំណុលដែលមានកំណត់ពេលទោះតូច ឬធំក៏ដោយ។ ការធ្វើដូច្នេះគឺយុត្តិធម៌បំផុតចំពោះអល់ឡោះ និងជាជំនួយដ៏សំខាន់ក្នុងការធ្វើសាក្សី ហើយជាកត្តាដែលនាំឱ្យពួកអ្នកចៀសផុតពីការមន្ទិលសង្ស័យ លើកលែងតែ(ប្រការនោះ)ជាជំនួញភ្លាមៗដែលពួកអ្នកទូទាត់វារវាងពួកអ្នក គឺគ្មានទោសពៃរ៍អ្វីទៅលើពួកអ្នកឡើយ បើពួកអ្នកមិនកត់ត្រាវានោះ។ តែពួកអ្នកត្រូវមានសាក្សីកាលណាពួកអ្នកលក់ដូរ។ ហើយគេមិនត្រូវបង្កផលលំបាកដល់អ្នកកត់ត្រា និងសាក្សីឡើយ។ តែប្រសិនបើពួកអ្នកធ្វើ(ផ្តល់ការលំបាកដល់ពួកគេ) ពិតប្រាកដ

وَيُعَلِّمُكُمُ ٱللَّهُۗ وَٱللَّهُ بِكُلِّ
شَيۡءٍ عَلِيمٞ ﴿٢٨٢﴾

ណាស់ ទង្វើនោះគឺជាបាបកម្មសម្រាប់ពួកអ្នក។ ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ ហើយអល់ឡោះនឹងបង្រៀនពួកអ្នក។ ហើយអល់ឡោះមហាដឹងនូវរាល់អ្វីៗទាំងអស់។

۞ وَإِن كُنتُمۡ عَلَىٰ سَفَرٖ وَلَمۡ تَجِدُواْ كَاتِبٗا
فَرِهَٰنٞ مَّقۡبُوضَةٞۖ فَإِنۡ أَمِنَ بَعۡضُكُم بَعۡضٗا
فَلۡيُؤَدِّ ٱلَّذِي ٱؤۡتُمِنَ أَمَٰنَتَهُۥ وَلۡيَتَّقِ ٱللَّهَ رَبَّهُۥۗ
وَلَا تَكۡتُمُواْ ٱلشَّهَٰدَةَۚ وَمَن يَكۡتُمۡهَا فَإِنَّهُۥٓ
ءَاثِمٞ قَلۡبُهُۥۗ وَٱللَّهُ بِمَا تَعۡمَلُونَ عَلِيمٞ ﴿٢٨٣﴾

២៨៣-ហើយប្រសិនបើពួកអ្នក ស្ថិតនៅក្នុងការធ្វើដំណើរ ដោយពួកអ្នកគ្មានអ្នកកត់ត្រាទេនោះ ចូរពួកអ្នកដាក់បញ្ចាំទ្រព្យអ្វីមួយ(ដល់ម្ចាស់បំណុល)។ តែបើពួកអ្នកទុកចិត្តគ្នាទៅវិញទៅមក គឺអ្នកដែលគេទុកចិត្តនោះត្រូវអនុវត្តនូវភាពស្មោះត្រង់របស់គេ(អ្នកខ្ចីត្រូវតែសងដល់ម្ចាស់ទ្រព្យវិញ) ហើយចូរឱ្យគេកោតខ្លាចអល់ឡោះជាម្ចាស់របស់គេ។ ហើយចូរពួកអ្នកកុំលាក់បាំងក្នុងការធ្វើសាក្សីឱ្យសោះ។ រីឯអ្នកណាដែលលាក់បាំងវា អ្នកនោះគឺជាអ្នកដែលមានបាបកម្មនៅក្នុងចិត្តរបស់គេ ។ ហើយអល់ឡោះដឹងបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

لِّلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۗ وَإِن
تُبۡدُواْ مَا فِيٓ أَنفُسِكُمۡ أَوۡ تُخۡفُوهُ
يُحَاسِبۡكُم بِهِ ٱللَّهُۖ فَيَغۡفِرُ لِمَن يَشَآءُ وَيُعَذِّبُ
مَن يَشَآءُۗ وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ قَدِيرٌ ﴿٢٨٤﴾

២៨៤-អ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ហើយប្រសិនបើពួកអ្នកលាតត្រដាងអ្វីដែលមាននៅក្នុងខ្លួនរបស់ពួកអ្នក ឬពួកអ្នកលាក់បាំងវា គឺអល់ឡោះនឹងជំនុំជំរះពួកអ្នកនូវទង្វើនោះ។ ហើយអល់ឡោះនឹងអភ័យទោសចំពោះអ្នកណាដែលទ្រង់មានចេតនា និងដាក់ទណ្ឌកម្មចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់។

ءَامَنَ ٱلرَّسُولُ بِمَآ أُنزِلَ إِلَيۡهِ مِن رَّبِّهِۦ
وَٱلۡمُؤۡمِنُونَۚ كُلٌّ ءَامَنَ بِٱللَّهِ وَمَلَٰٓئِكَتِهِۦ
وَكُتُبِهِۦ وَرُسُلِهِۦ لَا نُفَرِّقُ بَيۡنَ أَحَدٖ
مِّن رُّسُلِهِۦۚ وَقَالُواْ سَمِعۡنَا وَأَطَعۡنَاۖ
غُفۡرَانَكَ رَبَّنَا وَإِلَيۡكَ ٱلۡمَصِيرُ ﴿٢٨٥﴾

២៨៥-អ្នកនាំសារ(មូហាំម៉ាត់)មានជំនឿលើអ្វីៗដែលម្ចាស់របស់គេបានបញ្ចុះមកឱ្យគេ ហើយបណ្ដាអ្នកមានជំនឿក៏ដូចគ្នាដែរ។ ពួកគេទាំងអស់មានជំនឿលើអល់ឡោះនិងបណ្ដាម៉ាឡា-អ៊ីកាត់របស់ទ្រង់ និងបណ្ដាគម្ពីររបស់ទ្រង់ ហើយនិងបណ្ដាអ្នកនាំសាររបស់ទ្រង់។ (ពួកគេបាននិយាយថា) ពួកយើងមិនបែងចែកអ្នកនាំសារណាម្នាក់ក្នុងចំណោមអ្នកនាំសារទាំងឡាយរបស់អល់ឡោះនោះឡើយ។ ហើយពួកគេបានអះអាងថា: ពួកយើងបានឮនិងអនុវត្តតាម(រាល់បទបញ្ជារបស់ទ្រង់)។ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាអភ័យទោសឱ្យពួកយើងផង ហើយចំពោះទ្រង់តែមួយគត់ជាកន្លែងវិលត្រឡប់។

لَا يُكَلِّفُ ٱللَّهُ نَفۡسًا إِلَّا وُسۡعَهَاۚ لَهَا مَا
كَسَبَتۡ وَعَلَيۡهَا مَا ٱكۡتَسَبَتۡۗ رَبَّنَا لَا تُؤَاخِذۡنَآ
إِن نَّسِينَآ أَوۡ أَخۡطَأۡنَاۚ رَبَّنَا وَلَا تَحۡمِلۡ عَلَيۡنَآ
إِصۡرٗا كَمَا حَمَلۡتَهُۥ عَلَى ٱلَّذِينَ مِن قَبۡلِنَاۚ
رَبَّنَا وَلَا تُحَمِّلۡنَا مَا لَا طَاقَةَ لَنَا بِهِۦۖ وَٱعۡفُ
عَنَّا وَٱغۡفِرۡ لَنَا وَٱرۡحَمۡنَآۚ أَنتَ مَوۡلَىٰنَا
فَٱنصُرۡنَا عَلَى ٱلۡقَوۡمِ ٱلۡكَٰفِرِينَ ﴿٢٨٦﴾

២៨៦-អល់ឡោះមិនដាក់បន្ទុកលើអ្នកណាម្នាក់ហួសពីលទ្ធភាពរបស់គេឡើយ ។ អ្នកណាបានសាងអំពើល្អគឺទទួលបានផលល្អ ហើយអ្នកណាបានសាងអំពើអាក្រក់គឺទទួលបានផលអាក្រក់ ។ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាកុំចាប់កំហុសពួកយើងអ្វី ប្រសិនបើពួកយើងបានភ្លេចភ្លាំង ឬជ្រុលជ្រួសដោយអចេតនា ។ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាកុំដាក់ភារកិច្ចធ្ងន់ធ្ងរពេកមកលើពួកយើងដូចដែលទ្រង់បានដាក់ទៅលើពួកអ្នកជំនាន់មុនពួកយើងអ្វី ។ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាកុំដាក់បន្ទុកលើពួកយើងនូវអ្វីដែលគ្មានលទ្ធភាពសម្រាប់ពួកយើងនឹងធ្វើវា ។ ហើយសូមទ្រង់មេត្តាអធ្យាស្រ័យដល់ពួកយើង និងអភ័យទោសដល់ពួកយើងនិងអាណិតស្រឡាញ់ដល់ពួកយើងផង ។ ទ្រង់គឺជាអ្នកគាំពារពួកយើង ដូច្នេះសូមទ្រង់មេត្តាជួយពួកយើងឱ្យមានជ័យជំនះលើក្រុមដែលប្រឆាំងផង ។

## سورة آل عمران

## ជំពូកអាលីអ៊ិមរ៉ន

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

الٓمٓ ﴿١﴾

១-អាលីហ្វ ឡាម មីម ។

ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ٱلۡحَيُّ ٱلۡقَيُّومُ ﴿٢﴾

២- អល់ឡោះគឺជាម្ចាស់ ដែលគ្មានម្ចាស់ណាផ្សេងត្រូវគេគោរពសក្ការៈពិតប្រាកដក្រៅពីទ្រង់ដែលរស់ជាអមតៈ ដែលជាអ្នកគ្រប់គ្រងឡើយ ។

نَزَّلَ عَلَيۡكَ ٱلۡكِتَٰبَ بِٱلۡحَقِّ مُصَدِّقٗا لِّمَا
بَيۡنَ يَدَيۡهِ وَأَنزَلَ ٱلتَّوۡرَىٰةَ وَٱلۡإِنجِيلَ ﴿٣﴾

៣-ទ្រង់បានបញ្ចុះគម្ពីរ( គួរអាន)ឱ្យអ្នក( មូហាំម៉ាត់)ដោយពិតប្រាកដ ដើម្បីបញ្ជាក់នូវអ្វីដែលមានពីមុនវា និងបានបញ្ចុះគម្ពីរតាវ៉រ៉ត និងគម្ពីរអ៊ិញជីល

مِن قَبۡلُ هُدٗى لِّلنَّاسِ وَأَنزَلَ ٱلۡفُرۡقَانَۗ إِنَّ
ٱلَّذِينَ كَفَرُواْ بِـَٔايَٰتِ ٱللَّهِ لَهُمۡ عَذَابٞ شَدِيدٞۗ
وَٱللَّهُ عَزِيزٞ ذُو ٱنتِقَامٍ ﴿٤﴾

៤-កាលពីមុន( គម្ពីរគួរអាន)ដើម្បីជាការចង្អុលបង្ហាញដល់មនុស្សលោក ហើយទ្រង់ក៏បានបញ្ចុះការវិនិច្ឆ័យ( រវាងខុសនិងត្រូវ)ដែរ ។ ពិតប្រាកដណាស់ ពួកដែលប្រឆាំងនឹងអាយ៉ាត់ៗរបស់អល់ឡោះ ពួកគេនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរជាទីបំផុត ។ ហើយអល់ឡោះមហាខ្លាំងពូកែ មានអំណាចផ្តន្ទាទោស ។

إِنَّ ٱللَّهَ لَا يَخۡفَىٰ عَلَيۡهِ شَيۡءٞ فِي ٱلۡأَرۡضِ وَلَا

៥-ពិតប្រាកដណាស់អល់ឡោះ គ្មានអ្វីមួយនៅលើផែនដី និង

فِي ٱلسَّمَآءِ ٥

លើមេឃលាក់បាំងពីទ្រង់បានឡើយ ។

هُوَ ٱلَّذِي يُصَوِّرُكُمۡ فِي ٱلۡأَرۡحَامِ كَيۡفَ
يَشَآءُۚ لَآ إِلَٰهَ إِلَّا هُوَ ٱلۡعَزِيزُ ٱلۡحَكِيمُ ٦

៦-អល់ឡោះគឺជាអ្នកដែលធ្វើឱ្យពួកអ្នកមានរូបរាងក្នុងផ្ទៃម្តាយដូចដែលទ្រង់មានចេតនា ។ គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដផ្សេងពីទ្រង់ដែលមហាខ្លាំងពូកែ មហាគតិ-បណ្ឌិតឡើយ ។

هُوَ ٱلَّذِيٓ أَنزَلَ عَلَيۡكَ ٱلۡكِتَٰبَ مِنۡهُ ءَايَٰتٞ
مُّحۡكَمَٰتٌ هُنَّ أُمُّ ٱلۡكِتَٰبِ وَأُخَرُ مُتَشَٰبِهَٰتٞۖ
فَأَمَّا ٱلَّذِينَ فِي قُلُوبِهِمۡ زَيۡغٞ فَيَتَّبِعُونَ مَا تَشَٰبَهَ
مِنۡهُ ٱبۡتِغَآءَ ٱلۡفِتۡنَةِ وَٱبۡتِغَآءَ تَأۡوِيلِهِۦۖ وَمَا يَعۡلَمُ
تَأۡوِيلَهُۥٓ إِلَّا ٱللَّهُۗ وَٱلرَّٰسِخُونَ فِي ٱلۡعِلۡمِ
يَقُولُونَ ءَامَنَّا بِهِۦ كُلّٞ مِّنۡ عِندِ رَبِّنَاۗ وَمَا
يَذَّكَّرُ إِلَّآ أُوْلُواْ ٱلۡأَلۡبَٰبِ ٧

៧-អល់ឡោះគឺជាអ្នកដែលបានបញ្ចុះគម្ពីរ( គួរអាន) ទៅឱ្យអ្នក( មូហាំម៉ាត់) ដែលមានអាយ៉ាត់មួយចំនួនមានភាពច្បាស់លាស់ វានោះគឺជាមូលដ្ឋានគ្រឹះនៃគម្ពីរ ហើយមានអាយ៉ាត់ខ្លះទៀតដែលមានភាពមិនច្បាស់លាស់ ។ រីឯអ្នកដែលនៅក្នុងចិត្តរបស់ពួកគេមានភាពលំអៀងទៅរកការវង្វេង គឺពួកគេតាមតែអ្វីដែលជាភាពមិនច្បាស់លាស់ ដើម្បីបង្កឱ្យមានភាពចលាចល និងស្វែងរកអត្ថន័យខុសពីបន្ទូលពិត ។ ហើយគ្មានអ្នកដែលដឹងពីអត្ថន័យពិតរបស់វាក្រៅពីអល់ឡោះឡើយ ។ ហើយបណ្តាអ្នកដែលស៊ីជម្រៅនៅក្នុងចំណេះដឹង( សាសនា) ពួកគេនិយាយថា: ពួកយើងបានជឿនឹងវា( គម្ពីរគួរ-អាន) ហើយ ទាំងអស់នោះសុទ្ធតែមកពីម្ចាស់របស់ពួកយើង ។ ហើយការក្រើនរំលឹកគ្មានប្រយោជន៍ឡើយ លើកលែងតែពួកបញ្ញាជនប៉ុណ្ណោះ ។

رَبَّنَا لَا تُزِغۡ قُلُوبَنَا بَعۡدَ إِذۡ هَدَيۡتَنَا وَهَبۡ لَنَا
مِن لَّدُنكَ رَحۡمَةًۚ إِنَّكَ أَنتَ ٱلۡوَهَّابُ ٨

៨-ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាកុំបង្វែរចិត្តរបស់ពួកយើង ក្រោយពេលដែលទ្រង់បានចង្អុលបង្ហាញដល់ពួកយើងហើយនោះ ។ ហើយសូមទ្រង់មេត្តាប្រទានដល់ពួកយើងនូវការអាណិតស្រឡាញ់អំពីទ្រង់ផង ។ ពិតប្រាកដណាស់ ទ្រង់គឺជាអ្នកប្រទានដ៏លើសលប់ ។

رَبَّنَآ إِنَّكَ جَامِعُ ٱلنَّاسِ لِيَوۡمٖ لَّا رَيۡبَ فِيهِۚ
إِنَّ ٱللَّهَ لَا يُخۡلِفُ ٱلۡمِيعَادَ ٩

៩-ឱម្ចាស់របស់យើង! ពិតប្រាកដណាស់ ទ្រង់គឺជាអ្នកដែលប្រមូលមនុស្សនៅថ្ងៃមួយដែលគ្មានការសង្ស័យឡើយនាថ្ងៃនោះ( បរលោក) ។ ពិតប្រាកដណាស់ អល់ឡោះមិនធ្វើឱ្យខុសកិច្ចសន្យាឡើយ ។

إِنَّ ٱلَّذِينَ كَفَرُواْ لَن تُغۡنِيَ عَنۡهُمۡ

១០-ពិតប្រាកដណាស់ ពួកដែលបានប្រឆាំងនោះ ទ្រព្យសម្បត្តិនិងកូនចៅរបស់ពួកគេពិតជាមិនអាចការពារពួកគេពី( ទារុណកម្ម)

أَمۡوَٰلُهُمۡ وَلَآ أَوۡلَٰدُهُم مِّنَ ٱللَّهِ شَيۡـًٔاۖ
وَأُوْلَٰٓئِكَ هُمۡ وَقُودُ ٱلنَّارِ ١٠

អល់ឡោះបានបន្តិចសោះឡើយ ។ ហើយពួកអ្នកទាំងនេះគឺជាអុសរបស់ភ្លើងនរក ។

كَدَأۡبِ ءَالِ فِرۡعَوۡنَ وَٱلَّذِينَ مِن
قَبۡلِهِمۡۚ كَذَّبُواْ بِـَٔايَٰتِنَا فَأَخَذَهُمُ ٱللَّهُ
بِذُنُوبِهِمۡۗ وَٱللَّهُ شَدِيدُ ٱلۡعِقَابِ ١١

១១-(ទំលាប់ពួកប្រឆាំង) ដូចជាទំលាប់របស់ពូជពង្សហ្វៀរ-អោន និងពួកជំនាន់មុនពួកគេដែរ ។ ពួកទាំងនោះបានប្រឆាំងនឹងអាយ៉ាត់ៗរបស់យើង ដូច្នេះអល់ឡោះបានធ្វើទារុណកម្មពួកគេដោយសារបាបកម្មរបស់ពួកគេ ។ ហើយអល់ឡោះជាអ្នកធ្វើទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត ។

قُل لِّلَّذِينَ كَفَرُواْ سَتُغۡلَبُونَ
وَتُحۡشَرُونَ إِلَىٰ جَهَنَّمَۖ وَبِئۡسَ
ٱلۡمِهَادُ ١٢

១២-ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ពួកដែលប្រឆាំងថាៈ ពួកអ្នកនឹងត្រូវទទួលបរាជ័យ ហើយពួកអ្នកនឹងត្រូវគេប្រមូលទៅកាន់ឋាននរកជើហាន់ណាំ ។ ហើយវាជាកន្លែងដ៏អាក្រក់បំផុត ។

قَدۡ كَانَ لَكُمۡ ءَايَةٞ فِي فِئَتَيۡنِ ٱلۡتَقَتَاۖ فِئَةٞ
تُقَٰتِلُ فِي سَبِيلِ ٱللَّهِ وَأُخۡرَىٰ كَافِرَةٞ
يَرَوۡنَهُم مِّثۡلَيۡهِمۡ رَأۡيَ ٱلۡعَيۡنِۚ وَٱللَّهُ يُؤَيِّدُ
بِنَصۡرِهِۦ مَن يَشَآءُۗ إِنَّ فِي ذَٰلِكَ لَعِبۡرَةٗ
لِّأُوْلِي ٱلۡأَبۡصَٰرِ ١٣

១៣-ជាការពិតណាស់ មានភស្តុតាងមួយសម្រាប់ពួកអ្នក(យ៉ាហ៊ូទី)នៅក្នុងរឿងកងទ័ពពីរក្រុមបានជួបគ្នា(ប្រយុទ្ធគ្នានៅក្នុងសមរភូមិបាទើរ) ។ មួយក្រុមប្រយុទ្ធនៅក្នុងមាគ៌ារបស់អល់ឡោះ ហើយមួយក្រុមផ្សេងទៀតជាអ្នកប្រឆាំង ។ ពួកគេមើលឃើញបណ្តាអ្នកមានជំនឿផ្ទាល់នឹងភ្នែកនូវចំនួនទ្វេដងលើសពួកខ្លួន ។ ហើយអល់ឡោះពង្រឹងដោយជំនួយរបស់ទ្រង់ចំពោះអ្នកណាដែលទ្រង់មានចេតនា ។ ពិតប្រាកដណាស់ នៅក្នុងព្រឹត្តិការណ៍នោះជាមេរៀនមួយសម្រាប់បណ្តាអ្នកដែលមានការស្វែងយល់ ។

زُيِّنَ لِلنَّاسِ حُبُّ ٱلشَّهَوَٰتِ مِنَ ٱلنِّسَآءِ
وَٱلۡبَنِينَ وَٱلۡقَنَٰطِيرِ ٱلۡمُقَنطَرَةِ مِنَ ٱلذَّهَبِ
وَٱلۡفِضَّةِ وَٱلۡخَيۡلِ ٱلۡمُسَوَّمَةِ وَٱلۡأَنۡعَٰمِ
وَٱلۡحَرۡثِۗ ذَٰلِكَ مَتَٰعُ ٱلۡحَيَوٰةِ ٱلدُّنۡيَاۖ وَٱللَّهُ
عِندَهُۥ حُسۡنُ ٱلۡمَـَٔابِ ١٤

១៤-គេបានលំអសម្រាប់មនុស្សលោកនូវការស្រឡាញ់លោភលន់ ដូចជាស្រឡាញ់នារីភេទ និងកូនចៅ និងទ្រព្យសម្បត្តិច្រើនលើសលប់ ដូចជាមាស និងប្រាក់ និងសត្វសេះដែលគេបង្ហឹកហើយនិងសត្វពាហនៈ និងចំការដំណាំ ។ ទាំងនោះគឺជាការត្រេកត្រអាលនៃការរស់នៅក្នុងលោកិយប៉ុណ្ណោះ ។ ប៉ុន្តែអល់ឡោះ ទ្រង់មានកន្លែងវិលត្រឡប់ដ៏ល្អប្រពៃបំផុត(ឋានសួគ៌) ។

۞ قُلۡ أَؤُنَبِّئُكُم بِخَيۡرٖ مِّن ذَٰلِكُمۡۖ لِلَّذِينَ
ٱتَّقَوۡاْ عِندَ رَبِّهِمۡ جَنَّٰتٞ تَجۡرِي مِن

១៥-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើចង់ឱ្យខ្ញុំប្រាប់ពួកអ្នកអំពីប្រការដែលល្អជាងប្រការទាំងនោះឬទេ? សម្រាប់បណ្តាអ្នក

تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَا وَأَزۡوَٰجٞ
مُّطَهَّرَةٞ وَرِضۡوَٰنٞ مِّنَ ٱللَّهِۗ وَٱللَّهُ
بَصِيرُۢ بِٱلۡعِبَادِ ١٥

ដែលកោតខ្លាចអល់ឡោះមានឋានសួគ៌នៅជាមួយម្ចាស់របស់ពួកគេ ដែលមានទន្លេហូរពីក្រោមវា ដោយពួកគេនៅទីនោះជាអមតៈ ហើយមានភរិយាជាច្រើនដែលមានភាពស្អាតស្អំព្រមទាំងមានការយល់ព្រមពីអល់ឡោះ។ ហើយអល់ឡោះមហាឃើញនូវទង្វើនៃខ្ញុំទាំងអស់(របស់ទ្រង់)។

ٱلَّذِينَ يَقُولُونَ رَبَّنَآ إِنَّنَآ ءَامَنَّا فَٱغۡفِرۡ لَنَا
ذُنُوبَنَا وَقِنَا عَذَابَ ٱلنَّارِ ١٦

១៦-គឺអ្នកដែលបួងសួងសុំថាៈ ឱម្ចាស់របស់ពួកយើង! ពួកយើងពិតជាបានជឿហើយ ដូច្នេះសូមទ្រង់មេត្តាអភ័យទោសឱ្យពួកយើងនូវបាបកម្មទាំងឡាយរបស់ពួកយើង និងការពារពួកយើងពីទារុណកម្មនៃភ្លើងនរកផង។

ٱلصَّٰبِرِينَ وَٱلصَّٰدِقِينَ وَٱلۡقَٰنِتِينَ
وَٱلۡمُنفِقِينَ وَٱلۡمُسۡتَغۡفِرِينَ
بِٱلۡأَسۡحَارِ ١٧

១៧-(អល់ឡោះសរសើរ)បណ្ដាអ្នកដែលអត់ធ្មត់ និងបណ្ដាអ្នកដែលសច្ចៈ និងបណ្ដាអ្នកដែលគោរពប្រណិបត្តិន៍ និងបណ្ដាអ្នកដែលបរិច្ចាគ ហើយនិងបណ្ដាអ្នកដែលសុំអភ័យទោសនៅពេលចុងរាត្រី(ទៀបភ្លឺ)។

شَهِدَ ٱللَّهُ أَنَّهُۥ لَآ إِلَٰهَ إِلَّا هُوَ وَٱلۡمَلَٰٓئِكَةُ
وَأُوْلُواْ ٱلۡعِلۡمِ قَآئِمَۢا بِٱلۡقِسۡطِۚ لَآ إِلَٰهَ إِلَّا هُوَ
ٱلۡعَزِيزُ ٱلۡحَكِيمُ ١٨

១៨-អល់ឡោះបានបញ្ជាក់ថាៈ ពិតប្រាកដណាស់គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ដែលឈរលើភាពយុត្តិធម៌នោះឡើយ។ ហើយបណ្ដាម៉ាឡាអ៊ីកាត់ និងបណ្ដាអ្នកមានចំណេះដឹងក៏ដូច្នោះដែរ។ គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ដែលមហាខ្លាំងពូកែ មហាគតិបណ្ឌិតឡើយ។

إِنَّ ٱلدِّينَ عِندَ ٱللَّهِ ٱلۡإِسۡلَٰمُۗ وَمَا ٱخۡتَلَفَ
ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ إِلَّا مِنۢ بَعۡدِ مَا
جَآءَهُمُ ٱلۡعِلۡمُ بَغۡيَۢا بَيۡنَهُمۡۗ وَمَن يَكۡفُرۡ
بِـَٔايَٰتِ ٱللَّهِ فَإِنَّ ٱللَّهَ سَرِيعُ ٱلۡحِسَابِ ١٩

១៩-ពិតប្រាកដណាស់ សាសនារបស់អល់ឡោះនោះ គឺជាសាសនាអ៊ីស្លាម។ ហើយពួកដែលគេបានផ្ដល់គម្ពីរឱ្យមិនបានខ្វែងគំនិតគ្នាឡើយ លើកលែងតែបន្ទាប់ពីចំណេះដឹងបានមកដល់ពួកគេដោយមានការឈ្នានីសរវាងពួកគេប៉ុណ្ណោះ។ ហើយអ្នកណាដែលប្រឆាំងនឹងអាយ៉ាត់ៗរបស់អល់ឡោះ ពិតប្រាកដណាស់អល់ឡោះជាអ្នកជំនុំជំរះយ៉ាងរហ័សបំផុត។

فَإِنۡ حَآجُّوكَ فَقُلۡ أَسۡلَمۡتُ وَجۡهِيَ لِلَّهِ وَمَنِ
ٱتَّبَعَنِۗ وَقُل لِّلَّذِينَ أُوتُواْ ٱلۡكِتَٰبَ وَٱلۡأُمِّيِّـۧنَ
ءَأَسۡلَمۡتُمۡۚ فَإِنۡ أَسۡلَمُواْ فَقَدِ ٱهۡتَدَواْۖ وَّإِن

២០-ដូច្នេះប្រសិនបើពួកគេដេញដោលសួរអ្នក(អំពីសាសនាអ៊ីស្លាម) ចូរអ្នកឆ្លើយថាៈ ខ្ញុំបានប្រគល់ខ្លួនរបស់ខ្ញុំទៅចំពោះអល់ឡោះ ហើយអ្នកដែលតាមខ្ញុំដូច្នោះដែរ។ ហើយចូរអ្នកពោលទៅកាន់ពួកដែលគេបានផ្ដល់គម្ពីរឱ្យ(យ៉ាហ៊ូទី និងណាសរ៉នី និងពួក

تَوَلَّوۡاْ فَإِنَّمَا عَلَيۡكَ ٱلۡبَلَٰغُۗ وَٱللَّهُ بَصِيرُۢ
بِٱلۡعِبَادِ ٢٠

ដែលមិនចេះអក្សរ( ពួកមូស្ហ៊ីគីនអារ៉ាប់) ថា: តើពួកអ្នកព្រមចូលសាសនាអ៊ីស្លាមឬទេ? ប្រសិនបើពួកគេព្រមចូលសាសនាអ៊ីស្លាម គឺពួកគេពិតជានឹងទទួលបានការចង្អុលបង្ហាញ ។ តែបើពួកគេបែរចេញវិញ តាមពិតអ្នកគ្រាន់តែជាអ្នកផ្សព្វផ្សាយសារប៉ុណ្ណោះ ។ ហើយអល់ឡោះមហាឃើញនូវទង្វើនៃខ្ញុំ( របស់ទ្រង់) ទាំងអស់ ។

إِنَّ ٱلَّذِينَ يَكۡفُرُونَ بِـَٔايَٰتِ ٱللَّهِ
وَيَقۡتُلُونَ ٱلنَّبِيِّـۧنَ بِغَيۡرِ حَقّٖ وَيَقۡتُلُونَ
ٱلَّذِينَ يَأۡمُرُونَ بِٱلۡقِسۡطِ مِنَ ٱلنَّاسِ
فَبَشِّرۡهُم بِعَذَابٍ أَلِيمٍ ٢١

២១-ពិតប្រាកដណាស់ ពួកដែលប្រឆាំងនឹងអាយ៉ាត់ៗរបស់អល់ឡោះ និងសម្លាប់បណ្ដាណាពីដោយអយុត្តិធម៌ ព្រមទាំងសម្លាប់ពួកដែលប្រើមនុស្សឱ្យប្រកាន់នូវភាពយុត្តិធម៌ ។ ហេតុនេះ ចូរអ្នកប្រាប់ពួកគេពីទារុណកម្មយ៉ាងឈឺចាប់បំផុតចុះ ។

أُوْلَٰٓئِكَ ٱلَّذِينَ حَبِطَتۡ أَعۡمَٰلُهُمۡ فِي
ٱلدُّنۡيَا وَٱلۡأٓخِرَةِ وَمَا لَهُم مِّن
نَّٰصِرِينَ ٢٢

២២-ពួកទាំងនោះហើយដែលអំពើទាំងឡាយរបស់ពួកគេបានរលាយសាបសូន្យទាំងក្នុងលោកិយនិងបរលោក ។ ហើយពួកគេគ្មានអ្នកជួយឡើយ ។

أَلَمۡ تَرَ إِلَى ٱلَّذِينَ أُوتُواْ نَصِيبٗا مِّنَ
ٱلۡكِتَٰبِ يُدۡعَوۡنَ إِلَىٰ كِتَٰبِ ٱللَّهِ
لِيَحۡكُمَ بَيۡنَهُمۡ ثُمَّ يَتَوَلَّىٰ فَرِيقٞ مِّنۡهُمۡ
وَهُم مُّعۡرِضُونَ ٢٣

២៣-តើអ្នក( មូហាំម៉ាត់) ពុំបានឃើញទេឬ ពួកដែលគេបានផ្ដល់ឱ្យមួយផ្នែកនៃគម្ពីរ( តាវ៉ារ៉ត) ? ពួកគេត្រូវបានគេអំពាវនាវទៅកាន់គម្ពីររបស់អល់ឡោះ( គម្ពីរគួរអាន) ដើម្បីកាត់សេចក្ដីរវាងពួកគេ តែក្រោយមកមួយក្រុមអំពីពួកគេបែរចេញ ដោយពួកគេនៅតែប្រឆាំងនោះ?

ذَٰلِكَ بِأَنَّهُمۡ قَالُواْ لَن تَمَسَّنَا ٱلنَّارُ إِلَّآ أَيَّامٗا
مَّعۡدُودَٰتٖۖ وَغَرَّهُمۡ فِي دِينِهِم مَّا كَانُواْ
يَفۡتَرُونَ ٢٤

២៤-នោះគឺដោយសារតែពួកគេបាននិយាយថា: ភ្លើងនរកនឹងមិនប៉ះពាល់ពួកយើងឡើយ លើកលែងតែប៉ុន្មានថ្ងៃប៉ុណ្ណោះ ។ ហើយអ្វីដែលពួកគេបានប្រឌិតឡើងនោះបានបោកប្រាស់ពួកគេឱ្យស្ថិតនៅក្នុងសាសនា( ដែលមិនត្រឹមត្រូវ) របស់ពួកគេ ។

فَكَيۡفَ إِذَا جَمَعۡنَٰهُمۡ لِيَوۡمٖ لَّا رَيۡبَ فِيهِ
وَوُفِّيَتۡ كُلُّ نَفۡسٖ مَّا كَسَبَتۡ وَهُمۡ لَا
يُظۡلَمُونَ ٢٥

២៥-តើយ៉ាងដូចម្ដេច នៅពេលដែលយើងបានប្រមូលផ្ដុំពួកគេនៅថ្ងៃមួយដែលគ្មានការសង្ស័យឡើយនាថ្ងៃនោះ( ថ្ងៃបរលោក) ហើយបុគ្គលគ្រប់ៗរូបត្រូវបានគេ( អល់ឡោះ) តបស្នងទៅតាមអ្វីដែលគេបានប្រព្រឹត្ត ដោយពួកគេមិនត្រូវបានគេបំពាននោះ?

قُلِ ٱللَّهُمَّ مَٰلِكَ ٱلۡمُلۡكِ تُؤۡتِي ٱلۡمُلۡكَ مَن

២៦-ចូរអ្នក( មូហាំម៉ាត់) ពោលថា: ឱអល់ឡោះជាអ្នកដែល

تَشَآءُ وَتَنزِعُ ٱلۡمُلۡكَ مِمَّن تَشَآءُ وَتُعِزُّ مَن تَشَآءُ وَتُذِلُّ مَن تَشَآءُۖ بِيَدِكَ ٱلۡخَيۡرُۖ إِنَّكَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٢٦

គ្រប់គ្រងអំណាចទាំងអស់! ទ្រង់ប្រទានអំណាចចំពោះអ្នកណាដែលទ្រង់មានចេតនា និងដកហូតអំណាចវិញអំពីអ្នកណាដែលទ្រង់មានចេតនា។ ហើយទ្រង់ប្រទានកិត្តិយសចំពោះអ្នកណាដែលទ្រង់មានចេតនា និងធ្វើឱ្យអាប់ឱនកិត្តិយសចំពោះអ្នកណាដែលទ្រង់មានចេតនា។ អំពើល្អទាំងឡាយស្ថិតនៅក្នុងកណ្ដាប់ដៃរបស់ទ្រង់។ ពិតប្រាកដណាស់ ទ្រង់មានអានុភាពលើអ្វីៗទាំងអស់។

تُولِجُ ٱلَّيۡلَ فِي ٱلنَّهَارِ وَتُولِجُ ٱلنَّهَارَ فِي ٱلَّيۡلِۖ وَتُخۡرِجُ ٱلۡحَيَّ مِنَ ٱلۡمَيِّتِ وَتُخۡرِجُ ٱلۡمَيِّتَ مِنَ ٱلۡحَيِّۖ وَتَرۡزُقُ مَن تَشَآءُ بِغَيۡرِ حِسَابٖ ٢٧

២៧-ទ្រង់បញ្ចូលពេលយប់ទៅក្នុងពេលថ្ងៃ ហើយបញ្ចូលពេលថ្ងៃទៅក្នុងពេលយប់។ ហើយទ្រង់បញ្ចេញរបស់រស់ពីរបស់ស្លាប់(ឧ. បញ្ចេញកូនមាន់ពីពងមាន់) ហើយទ្រង់បញ្ចេញរបស់ស្លាប់ពីរបស់រស់(ឧ.បញ្ចេញពងមាន់ពីមេមាន់) ហើយទ្រង់ប្រទានលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនាដោយគ្មានកំណត់ឡើយ។

لَّا يَتَّخِذِ ٱلۡمُؤۡمِنُونَ ٱلۡكَٰفِرِينَ أَوۡلِيَآءَ مِن دُونِ ٱلۡمُؤۡمِنِينَۖ وَمَن يَفۡعَلۡ ذَٰلِكَ فَلَيۡسَ مِنَ ٱللَّهِ فِي شَيۡءٍ إِلَّآ أَن تَتَّقُواْ مِنۡهُمۡ تُقَىٰةٗۗ وَيُحَذِّرُكُمُ ٱللَّهُ نَفۡسَهُۥۗ وَإِلَى ٱللَّهِ ٱلۡمَصِيرُ ٢٨

២៨-ចូរកុំឱ្យបណ្ដាអ្នកដែលមានជំនឿយកពួកដែលគ្មានជំនឿធ្វើជាអ្នកគាំពារផ្សេងពីបណ្ដាអ្នកដែលមានជំនឿឱ្យសោះ។ ហើយអ្នកណាធ្វើដូច្នោះ គេប្រាកដជាមិនបានទទួលអ្វីពីអល់ឡោះឡើយ លើកលែងតែពួកដែលខ្លាចពួកគេប៉ុណ្ណោះ។ ហើយអល់ឡោះព្រមានពួកអ្នកនូវទារុណកម្មរបស់ទ្រង់។ ហើយទៅចំពោះអល់ឡោះគឺជាកន្លែងវិលត្រឡប់ចុងក្រោយ។

قُلۡ إِن تُخۡفُواْ مَا فِي صُدُورِكُمۡ أَوۡ تُبۡدُوهُ يَعۡلَمۡهُ ٱللَّهُۗ وَيَعۡلَمُ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۗ وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٢٩

២៩-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ប្រសិនបើពួកអ្នកលាក់បាំងអ្វីដែលមាននៅក្នុងចិត្តរបស់ពួកអ្នក ឬពួកអ្នកលាតត្រដាងវា អល់ឡោះពិតជាដឹងវា។ ហើយទ្រង់ដឹងនូវអ្វីដែលមាននៅលើមេឃជាច្រើនជាន់និងអ្វីដែលមាននៅលើផែនដី។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់។

يَوۡمَ تَجِدُ كُلُّ نَفۡسٖ مَّا عَمِلَتۡ مِنۡ خَيۡرٖ مُّحۡضَرٗا وَمَا عَمِلَتۡ مِن سُوٓءٖ تَوَدُّ لَوۡ أَنَّ بَيۡنَهَا وَبَيۡنَهُۥٓ أَمَدَۢا بَعِيدٗاۗ وَيُحَذِّرُكُمُ ٱللَّهُ نَفۡسَهُۥۗ وَٱللَّهُ رَءُوفُۢ بِٱلۡعِبَادِ ٣٠

៣០-នៅថ្ងៃដែលបុគ្គលគ្រប់រូបនឹងជួបប្រទះនៅពីមុខគេនូវអំពើល្អនិងអំពើអាក្រក់ដែលគេបានសាង គឺគេប៉ងប្រាថ្នាចង់ឱ្យរូបគេ និងទង្វើអាក្រក់របស់គេឃ្លាតឆ្ងាយពីគ្នាបំផុត។ ហើយអល់ឡោះព្រមានពួកអ្នកនូវទារុណកម្មរបស់ទ្រង់។ ហើយអល់ឡោះគឺពោរពេញទៅដោយក្ដីអាណិតស្រឡាញ់ចំពោះខ្ញុំទាំងឡាយរបស់ទ្រង់។

قُلۡ إِن كُنتُمۡ تُحِبُّونَ ٱللَّهَ فَٱتَّبِعُونِي يُحۡبِبۡكُمُ ٱللَّهُ وَيَغۡفِرۡ لَكُمۡ ذُنُوبَكُمۡۚ وَٱللَّهُ غَفُورٞ رَّحِيمٞ ﴿٣١﴾

៣១-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ប្រសិនបើពួកអ្នកស្រឡាញ់អល់ឡោះ ចូរពួកអ្នកប្រតិបត្តិតាមខ្ញុំ នោះអល់ឡោះពិតជាស្រឡាញ់ពួកអ្នក និងអភ័យទោសឱ្យពួកអ្នកនូវបាបកម្មទាំងឡាយរបស់ពួកអ្នក។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

قُلۡ أَطِيعُواْ ٱللَّهَ وَٱلرَّسُولَۖ فَإِن تَوَلَّوۡاْ فَإِنَّ ٱللَّهَ لَا يُحِبُّ ٱلۡكَٰفِرِينَ ﴿٣٢﴾

៣២-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកប្រតិបត្តិតាមអល់ឡោះនិងអ្នកនាំសារ។ តែប្រសិនបើពួកគេបែរចេញ ពិតប្រាកដណាស់អល់ឡោះមិនស្រឡាញ់ពួកដែលប្រឆាំងឡើយ។

۞إِنَّ ٱللَّهَ ٱصۡطَفَىٰٓ ءَادَمَ وَنُوحٗا وَءَالَ إِبۡرَٰهِيمَ وَءَالَ عِمۡرَٰنَ عَلَى ٱلۡعَٰلَمِينَ ﴿٣٣﴾

៣៣-ពិតប្រាកដណាស់ អល់ឡោះបានជ្រើសរើសអាដាំ និងនួហ និងពូជពង្សអ៊ីព្រហ៊ីម ព្រមទាំងពូជពង្សអ៊ិមរ៉នជាមនុស្សដ៏ប្រសើរបំផុតនៅក្នុងសម័យកាលរបស់ពួកគេ។

ذُرِّيَّةَۢ بَعۡضُهَا مِنۢ بَعۡضٖۗ وَٱللَّهُ سَمِيعٌ عَلِيمٌ ﴿٣٤﴾

៣៤-ជាពូជពង្សរវាងគ្នានឹងគ្នា។ ហើយអល់ឡោះ មហាឮ មហាដឹង។

إِذۡ قَالَتِ ٱمۡرَأَتُ عِمۡرَٰنَ رَبِّ إِنِّي نَذَرۡتُ لَكَ مَا فِي بَطۡنِي مُحَرَّرٗا فَتَقَبَّلۡ مِنِّيٓۖ إِنَّكَ أَنتَ ٱلسَّمِيعُ ٱلۡعَلِيمُ ﴿٣٥﴾

៣៥-ចូរអ្នកចងចាំនៅពេលដែលភរិយារបស់អ៊ិមរ៉នបានបួងសួងសុំថា: ឱម្ចាស់របស់ខ្ញុំ! ជាការពិតណាស់ ខ្ញុំបានសច្ចាជូនចំពោះទ្រង់នូវកូនដែលមាននៅក្នុងផ្ទៃរបស់ខ្ញុំឱ្យមានការស្មោះស្ម័គ្រដើម្បីបម្រើទ្រង់។ ដូច្នេះ សូមទ្រង់មេត្តាទទួលយក(ការបួងសួង)ពីខ្ញុំផង។ ពិតប្រាកដណាស់ ទ្រង់ជាម្ចាស់មហាឮ មហាដឹង។

فَلَمَّا وَضَعَتۡهَا قَالَتۡ رَبِّ إِنِّي وَضَعۡتُهَآ أُنثَىٰ وَٱللَّهُ أَعۡلَمُ بِمَا وَضَعَتۡ وَلَيۡسَ ٱلذَّكَرُ كَٱلۡأُنثَىٰۖ وَإِنِّي سَمَّيۡتُهَا مَرۡيَمَ وَإِنِّيٓ أُعِيذُهَا بِكَ وَذُرِّيَّتَهَا مِنَ ٱلشَّيۡطَٰنِ ٱلرَّجِيمِ ﴿٣٦﴾

៣៦-ហើយនៅពេលដែលនាងសម្រាលបានកូនស្រី នាងបាននិយាយថា: ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំសម្រាលបានកូនស្រីម្នាក់។ ហើយអល់ឡោះដឹងបំផុតចំពោះកូនដែលនាងបានសម្រាលនោះ។ ហើយកូនប្រុសមិនដូចកូនស្រីឡើយ។ ហើយពិតប្រាកដណាស់ ខ្ញុំបានដាក់ឈ្មោះនាងថា "ម៉ារយ៉ាំ" ហើយជាការពិតណាស់ ខ្ញុំសូមឱ្យទ្រង់ការពារនាង និងពូជពង្សរបស់នាងអំពីស្ហៃតនដែលត្រូវគេដាក់បណ្តាសាផង។

فَتَقَبَّلَهَا رَبُّهَا بِقَبُولٍ حَسَنٖ وَأَنۢبَتَهَا نَبَاتًا حَسَنٗا وَكَفَّلَهَا زَكَرِيَّاۖ كُلَّمَا دَخَلَ عَلَيۡهَا

៣៧-ដូច្នេះម្ចាស់របស់នាង(ម៉ារយ៉ាំ)ក៏បានទទួលនាងដោយការទទួលមួយដ៏ប្រសើរ។ ហើយទ្រង់បានបណ្តុះបណ្តាលនាងនូវការបណ្តុះបណ្តាលមួយដ៏ល្អប្រពៃ ហើយទ្រង់បានឱ្យហ្សាការីយ៉ា

زَكَرِيَّا ٱلْمِحْرَابَ وَجَدَ عِندَهَا رِزْقًا ۖ قَالَ
يَـٰمَرْيَمُ أَنَّىٰ لَكِ هَـٰذَا ۖ قَالَتْ هُوَ مِنْ عِندِ ٱللَّهِ ۖ
إِنَّ ٱللَّهَ يَرْزُقُ مَن يَشَآءُ بِغَيْرِ حِسَابٍ ﴿٣٧﴾

ថែរក្សានាង។ រាល់ពេលដែលហ្សាការីយ៉ាបានចូលទៅជួបនាងនៅឯមាសរ៉ប(កន្លែងស្នាក់នៅ) គាត់ក៏បានប្រទះឃើញចំណី(ផ្លែឈើ)នៅជាមួយនាង។ គាត់បានសួរនាងថា: ឱម៉ារយ៉ាំ! តើនាងបានចំណីនេះមកពីណា? នាងបានឆ្លើយថា: វាមកពីអល់ឡោះ។ ពិតប្រាកដណាស់ អល់ឡោះប្រទានលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនាដោយគ្មានកំណត់ឡើយ។

هُنَالِكَ دَعَا زَكَرِيَّا رَبَّهُۥ ۖ قَالَ رَبِّ هَبْ
لِى مِن لَّدُنكَ ذُرِّيَّةً طَيِّبَةً ۖ إِنَّكَ سَمِيعُ
ٱلدُّعَآءِ ﴿٣٨﴾

៣៨-នៅទីនោះហ្សាការីយ៉ាក៏បានបួងសួងសុំម្ចាស់របស់គេដោយពោលថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាប្រទានឱ្យខ្ញុំនូវកូនដ៏ល្អម្នាក់អំពីទ្រង់ផង។ ពិតប្រាកដណាស់ ទ្រង់មហាឮនូវការបួងសួងសុំនេះ។

فَنَادَتْهُ ٱلْمَلَـٰٓئِكَةُ وَهُوَ قَآئِمٌ يُصَلِّى فِى
ٱلْمِحْرَابِ أَنَّ ٱللَّهَ يُبَشِّرُكَ بِيَحْيَىٰ مُصَدِّقًۢا
بِكَلِمَةٍ مِّنَ ٱللَّهِ وَسَيِّدًا وَحَصُورًا وَنَبِيًّا مِّنَ
ٱلصَّـٰلِحِينَ ﴿٣٩﴾

៣៩-ហើយម៉ាឡាអ៊ីកាត់ក៏បានហៅគេ(ហ្សាការីយ៉ា) ខណៈដែលគាត់កំពុងតែឈរសឡាតនៅកន្លែងគោរពសក្ការៈថា: ពិតប្រាកដណាស់ អល់ឡោះផ្តល់ដំណឹងរីករាយដល់អ្នកឱ្យមានកូនឈ្មោះយ៉ះយ៉ា ដើម្បីបញ្ជាក់នូវបន្ទូលពិតរបស់អល់ឡោះ(ក្នុងការបង្កើតអ៊ីសា) ជាអ្នកដឹកនាំ និងជាអ្នកថែរក្សាខ្លួនប្រាណពីការរួមរ័កជាមួយស្ត្រី និងជាណាពីម្នាក់ក្នុងចំណោមអ្នកដែលល្អត្រឹមត្រូវ។

قَالَ رَبِّ أَنَّىٰ يَكُونُ لِى غُلَـٰمٌ وَقَدْ بَلَغَنِىَ
ٱلْكِبَرُ وَٱمْرَأَتِى عَاقِرٌ ۖ قَالَ كَذَٰلِكَ ٱللَّهُ
يَفْعَلُ مَا يَشَآءُ ﴿٤٠﴾

៤០-ហ្សាការីយ៉ាបានពោលថា: ឱម្ចាស់របស់ខ្ញុំ! តើឱ្យខ្ញុំមានកូនយ៉ាងដូចម្តេច បើខ្ញុំមានវ័យចំណាស់ ហើយប្រពន្ធរបស់ខ្ញុំជាស្ត្រីអារនោះ? អល់ឡោះបានមានបន្ទូលថា: អល់ឡោះធ្វើអ្វីតាមតែទ្រង់មានចេតនាដូច្នោះហើយ។

قَالَ رَبِّ ٱجْعَل لِّىٓ ءَايَةً ۖ قَالَ ءَايَتُكَ
أَلَّا تُكَلِّمَ ٱلنَّاسَ ثَلَـٰثَةَ أَيَّامٍ إِلَّا رَمْزًا ۗ
وَٱذْكُر رَّبَّكَ كَثِيرًا وَسَبِّحْ بِٱلْعَشِىِّ
وَٱلْإِبْكَـٰرِ ﴿٤١﴾

៤១-ហ្សាការីយ៉ាបានពោលទៀតថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាផ្តល់ឱ្យខ្ញុំនូវសញ្ញាណាមួយផង។ អល់ឡោះមានបន្ទូលថា: សញ្ញារបស់អ្នកគឺអ្នកមិនអាចនិយាយស្តីជាមួយមនុស្សចំនួនបីថ្ងៃ លើកលែងតែធ្វើសញ្ញា(កាយវិការ)ប៉ុណ្ណោះ។ ហើយអ្នកត្រូវរំលឹកទៅចំពោះម្ចាស់របស់អ្នកឱ្យបានច្រើននិងសូត្រធមិលើកតម្កើងទ្រង់ទាំងល្ងាចទាំងព្រឹក។

وَإِذْ قَالَتِ ٱلْمَلَـٰٓئِكَةُ يَـٰمَرْيَمُ إِنَّ ٱللَّهَ
ٱصْطَفَىٰكِ وَطَهَّرَكِ وَٱصْطَفَىٰكِ عَلَىٰ نِسَآءِ

៤២-ហើយ(ចូរចងចាំ)នៅពេលដែលម៉ាឡាអ៊ីកាត់បានពោលថា: ឱម៉ារយ៉ាំ! អល់ឡោះបានជ្រើសរើសអ្នក និងបានសំអាតអ្នក

ٱلْعَٰلَمِينَ ﴿٤٢﴾

ហើយទ្រង់បានលើកតម្កើងអ្នកឱ្យលើសពីស្ត្រីផ្សេងៗនៅលើលោក (នៅជំនាន់នោះ) ។

يَٰمَرْيَمُ ٱقْنُتِى لِرَبِّكِ وَٱسْجُدِى وَٱرْكَعِى مَعَ ٱلرَّٰكِعِينَ ﴿٤٣﴾

៤៣-ឱម៉ារយ៉ាំ! ចូរអ្នកគោរពទៅចំពោះម្ចាស់របស់អ្នក ហើយចូរអ្នកស៊ូជូត និងរូកុជាមួយនឹងអ្នករូកុ( ថ្វាយបង្គំរួមគ្នា) ។

ذَٰلِكَ مِنْ أَنۢبَآءِ ٱلْغَيْبِ نُوحِيهِ إِلَيْكَ ۚ وَمَا كُنتَ لَدَيْهِمْ إِذْ يُلْقُونَ أَقْلَٰمَهُمْ أَيُّهُمْ يَكْفُلُ مَرْيَمَ وَمَا كُنتَ لَدَيْهِمْ إِذْ يَخْتَصِمُونَ ﴿٤٤﴾

៤៤-ទាំងនោះគឺជាដំណឹងអាថ៌កំបាំងមួយចំនួនដែលយើងផ្តល់វាឱ្យអ្នក( មូហាំម៉ាត់) ។ ហើយអ្នកមិនបាននៅជាមួយពួកគេទេ នៅពេលដែលពួកគេបោះស្លាបប៉ាការបស់ពួកគេ( ទៅក្នុងទន្លេ ដើម្បីចាប់ឆ្នោត) តើអ្នកណាម្នាក់ក្នុងចំណោមពួកគេសក្តិសមនឹងថែរក្សាម៉ារយ៉ាំនោះ ។ ហើយអ្នកក៏មិនបាននៅជាមួយពួកគេដែរ នៅពេលដែលពួកគេឈ្លោះប្រកែកគ្នា ។

إِذْ قَالَتِ ٱلْمَلَٰٓئِكَةُ يَٰمَرْيَمُ إِنَّ ٱللَّهَ يُبَشِّرُكِ بِكَلِمَةٍ مِّنْهُ ٱسْمُهُ ٱلْمَسِيحُ عِيسَى ٱبْنُ مَرْيَمَ وَجِيهًا فِى ٱلدُّنْيَا وَٱلْءَاخِرَةِ وَمِنَ ٱلْمُقَرَّبِينَ ﴿٤٥﴾

៤៥-( ចូរចងចាំ) នៅពេលដែលម៉ាឡាអ៊ីកាត់បានពោលថា: ឱម៉ារយ៉ាំ! ពិតប្រាកដណាស់ អល់ឡោះផ្តល់ដំណឹងរីករាយដល់អ្នក នូវបន្ទូលពីទ្រង់[1] ឈ្មោះរបស់គេគឺអាល់ម៉ាសៀហអ៊ីសាកូនម៉ារយ៉ាំ ដែលល្បីល្បាញទាំងក្នុងលោកិយ និងថ្ងៃបរលោក និងជាអ្នកជំនិតម្នាក់ក្នុងចំណោមអ្នកជំនិតទាំងឡាយរបស់អល់ឡោះ ។

وَيُكَلِّمُ ٱلنَّاسَ فِى ٱلْمَهْدِ وَكَهْلًا وَمِنَ ٱلصَّٰلِحِينَ ﴿٤٦﴾

៤៦-ហើយអ៊ីសានិយាយជាមួយមនុស្សលោកតាំងពីនៅក្នុងអង្រឹងនិងពេលពេញវ័យ និងជាអ្នកធ្វើល្អម្នាក់ក្នុងចំណោមអ្នកធ្វើល្អទាំងឡាយ ។

قَالَتْ رَبِّ أَنَّىٰ يَكُونُ لِى وَلَدٌ وَلَمْ يَمْسَسْنِى بَشَرٌ ۖ قَالَ كَذَٰلِكِ ٱللَّهُ يَخْلُقُ مَا يَشَآءُ ۚ إِذَا قَضَىٰٓ أَمْرًا فَإِنَّمَا يَقُولُ لَهُۥ كُن فَيَكُونُ ﴿٤٧﴾

៤៧-ម៉ារយ៉ាំបាននិយាយថា: ឱម្ចាស់របស់ខ្ញុំ! តើឱ្យខ្ញុំមានកូនដោយគ្មានបុរសណាមកប៉ះពាល់ខ្ញុំយ៉ាងដូចម្តេច? ម៉ាឡាអ៊ីកាត់បានឆ្លើយថា: ដូច្នោះហើយអល់ឡោះបង្កើតអ្វីតាមតែទ្រង់មានចេតនា។ នៅពេលដែលទ្រង់មានចេតនាសម្រេចកិច្ចការអ្វីមួយ គឺទ្រង់គ្រាន់តែមានបន្ទូលទៅកាន់របស់នោះថា: ចូរកើតចុះ វាក៏កើតឡើងភ្លាម ។

وَيُعَلِّمُهُ ٱلْكِتَٰبَ وَٱلْحِكْمَةَ وَٱلتَّوْرَىٰةَ وَٱلْإِنجِيلَ ﴿٤٨﴾

៤៨-ហើយទ្រង់នឹងបង្រៀនគេ( អ៊ីសា) នូវការសរសេរ និងភាពឆ្លាតវៃ និងគម្ពីរតាវរ៉ត និងគម្ពីរអ៊ីញជីល ។

---

១-ការបង្កើតអ៊ីសាដោយបន្ទូលរបស់ទ្រង់ថាចូរកើត អ៊ីសាក៏កើតភ្លាម ។

៤៩-ហើយតែងតាំងគេជាអ្នកនាំសារម្នាក់ទៅកាន់អំបូរអ៊ីស្រាអែល(ដោយឱ្យគេពោលថា) ពិតប្រាកដណាស់ ខ្ញុំបាននាំមកឱ្យពួកអ្នកនូវមុជីហ្សាត់ពីម្ចាស់របស់ពួកអ្នក។ ពិតប្រាកដណាស់ ខ្ញុំអាចធ្វើឱ្យពួកអ្នកឃើញអំពីដីឥដ្ឋដូចជារូបសត្វស្លាប ហើយខ្ញុំក៏ផ្លុំចូលទៅក្នុងវា ពេលនោះវាក៏ក្លាយជាសត្វពិតប្រាកដភ្លាម ដោយមានការអនុញ្ញាតរបស់អល់ឡោះ។ ហើយខ្ញុំអាចព្យាបាលជនពិការភ្នែកពីកំណើតនិងឃ្លង់ ហើយខ្ញុំក៏អាចប្រោសសពឱ្យរស់ឡើងវិញបានដែរ ដោយការអនុញ្ញាតរបស់អល់ឡោះ។ ហើយខ្ញុំអាចប្រាប់ពួកអ្នកនូវចំណីដែលពួកអ្នកបរិភោគ និងចំណីដែលពួកអ្នកត្រូវស្តុកទុកនៅក្នុងលំនៅដ្ឋានរបស់ពួកអ្នក។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះជាភស្តុតាងសម្រាប់ពួកអ្នក បើពួកអ្នកជាអ្នកមានជំនឿ។

وَرَسُولًا إِلَىٰ بَنِيٓ إِسۡرَٰٓءِيلَ أَنِّي قَدۡ جِئۡتُكُم
بِـَٔايَةٖ مِّن رَّبِّكُمۡ أَنِّيٓ أَخۡلُقُ لَكُم مِّنَ
ٱلطِّينِ كَهَيۡـَٔةِ ٱلطَّيۡرِ فَأَنفُخُ فِيهِ فَيَكُونُ طَيۡرَۢا
بِإِذۡنِ ٱللَّهِۖ وَأُبۡرِئُ ٱلۡأَكۡمَهَ وَٱلۡأَبۡرَصَ
وَأُحۡيِ ٱلۡمَوۡتَىٰ بِإِذۡنِ ٱللَّهِۖ وَأُنَبِّئُكُم بِمَا تَأۡكُلُونَ
وَمَا تَدَّخِرُونَ فِي بُيُوتِكُمۡۚ إِنَّ فِي ذَٰلِكَ
لَأٓيَةٗ لَّكُمۡ إِن كُنتُم مُّؤۡمِنِينَ ٤٩

៥០-ហើយ(ខ្ញុំមកនេះ)ដើម្បីបញ្ជាក់នូវអ្វីដែលមានពីមុនខ្ញុំអំពីគម្ពីរតាវ៉រ៉ត និងដើម្បីអនុញ្ញាតឱ្យពួកអ្នកនូវប្រការមួយចំនួនដែលគេបានហាមឃាត់មកលើពួកអ្នក។ ហើយខ្ញុំបាននាំមកបង្ហាញពួកអ្នកនូវមុជីហ្សាត់ពីម្ចាស់របស់ពួកអ្នក។ ដូច្នេះចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាមខ្ញុំ។

وَمُصَدِّقٗا لِّمَا بَيۡنَ يَدَيَّ مِنَ ٱلتَّوۡرَىٰةِ
وَلِأُحِلَّ لَكُم بَعۡضَ ٱلَّذِي حُرِّمَ عَلَيۡكُمۡۚ
وَجِئۡتُكُم بِـَٔايَةٖ مِّن رَّبِّكُمۡ فَٱتَّقُواْ ٱللَّهَ
وَأَطِيعُونِ ٥٠

៥១-ពិតប្រាកដណាស់អល់ឡោះគឺជាម្ចាស់របស់ខ្ញុំ និងជាម្ចាស់របស់ពួកអ្នក ដូច្នេះចូរពួកអ្នកគោរពសក្ការៈទៅចំពោះទ្រង់។ នេះគឺជាមាគ៌ាដ៏ត្រឹមត្រូវ ។

إِنَّ ٱللَّهَ رَبِّي وَرَبُّكُمۡ فَٱعۡبُدُوهُۚ هَٰذَا
صِرَٰطٞ مُّسۡتَقِيمٞ ٥١

៥២-ហើយនៅពេលអ៊ីសាមានអារម្មណ៍ថាមានការប្រឆាំងពីពួកគេ គេក៏បានពោលថាៈ តើអ្នកណាជាជំនួយរបស់ខ្ញុំដើម្បីអល់ឡោះ? បណ្តាអ្នកដែលស្មោះត្រង់បានឆ្លើយថាៈ ពួកយើងគឺជាជំនួយរបស់អល់ឡោះ ពួកយើងមានជំនឿនឹងអល់ឡោះ ដូច្នេះសូមអ្នកធ្វើសាក្សីផងថាៈ ពិតប្រាកដណាស់ ពួកយើងជាមូស្លីម។

۞فَلَمَّآ أَحَسَّ عِيسَىٰ مِنۡهُمُ ٱلۡكُفۡرَ قَالَ مَنۡ
أَنصَارِيٓ إِلَى ٱللَّهِۖ قَالَ ٱلۡحَوَارِيُّونَ نَحۡنُ
أَنصَارُ ٱللَّهِ ءَامَنَّا بِٱللَّهِ وَٱشۡهَدۡ بِأَنَّا
مُسۡلِمُونَ ٥٢

៥៣-ឱម្ចាស់របស់ពួកយើង! ពួកយើងមានជំនឿលើអ្វីដែលទ្រង់បានបញ្ចុះមក(គម្ពីរអ៊ីញជីល) ហើយពួកយើងបានប្រតិបត្តិតាមអ្នកនាំសារ(អ៊ីសា) ដូច្នេះសូមទ្រង់មេត្តាកត់ត្រាពួកយើងឱ្យនៅជាមួយបណ្តាអ្នកដែលធ្វើសាក្សីផង។

رَبَّنَآ ءَامَنَّا بِمَآ أَنزَلۡتَ وَٱتَّبَعۡنَا ٱلرَّسُولَ
فَٱكۡتُبۡنَا مَعَ ٱلشَّٰهِدِينَ ٥٣

وَمَكَرُواْ وَمَكَرَ ٱللَّهُۖ وَٱللَّهُ خَيْرُ ٱلْمَٰكِرِينَ ﴿٥٤﴾

៥៤-ហើយពួកគេបានប្រើឧបាយកល[1] ហើយអល់ឡោះក៏បានប្រើឧបាយកលតបវិញដែរ ។ ហើយអល់ឡោះជាអ្នកដែលប្រសើរបំផុតក្នុងការតបចំពោះអ្នកដែលប្រើឧបាយកលទាំងឡាយ ។

إِذْ قَالَ ٱللَّهُ يَٰعِيسَىٰٓ إِنِّى مُتَوَفِّيكَ وَرَافِعُكَ إِلَىَّ وَمُطَهِّرُكَ مِنَ ٱلَّذِينَ كَفَرُواْ وَجَاعِلُ ٱلَّذِينَ ٱتَّبَعُوكَ فَوْقَ ٱلَّذِينَ كَفَرُوٓاْ إِلَىٰ يَوْمِ ٱلْقِيَٰمَةِۖ ثُمَّ إِلَىَّ مَرْجِعُكُمْ فَأَحْكُمُ بَيْنَكُمْ فِيمَا كُنتُمْ فِيهِ تَخْتَلِفُونَ ﴿٥٥﴾

៥៥-(ចូរចងចាំ) នៅពេលដែលអល់ឡោះបានមានបន្ទូលថា: ឱអ៊ីសា! ពិតប្រាកដណាស់ យើងគឺជាអ្នកដកយកអ្នក(ពីផែនដី) និងជាអ្នកលើកអ្នកមកកាន់យើង ព្រមទាំងរំដោះអ្នកឱ្យរួចផុតពីពួកប្រឆាំង ហើយយើងនឹងធ្វើឱ្យបណ្តាអ្នកដែលប្រតិបត្តិតាមអ្នកខ្ពង់ខ្ពស់ជាងពួកដែលប្រឆាំងរហូតដល់ថ្ងៃបរលោក ។ ក្រោយមកកន្លែងវិលត្រឡប់របស់ពួកអ្នកគឺមកកាន់យើងវិញ ។ ហើយយើងនឹងកាត់សេចក្តីរវាងពួកអ្នកនូវអ្វីដែលពួកអ្នកធ្លាប់ខ្វែងគំនិតគ្នាក្នុងរឿងនោះ ។

فَأَمَّا ٱلَّذِينَ كَفَرُواْ فَأُعَذِّبُهُمْ عَذَابًا شَدِيدًا فِى ٱلدُّنْيَا وَٱلْءَاخِرَةِ وَمَا لَهُم مِّن نَّٰصِرِينَ ﴿٥٦﴾

៥៦-រីឯពួកដែលប្រឆាំង យើងនឹងធ្វើទារុណកម្មពួកគេនូវទារុណកម្មដ៏ធ្ងន់ធ្ងរទាំងក្នុងលោកិយ និងថ្ងៃបរលោក[2] ។ ហើយពួកគេគ្មានអ្នកជួយឡើយ ។

وَأَمَّا ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ فَيُوَفِّيهِمْ أُجُورَهُمْۗ وَٱللَّهُ لَا يُحِبُّ ٱلظَّٰلِمِينَ ﴿٥٧﴾

៥៧-ហើយចំណែកឯបណ្តាអ្នកដែលមានជំនឿ និងសាងអំពើល្អវិញ អល់ឡោះនឹងបំពេញឱ្យពួកគេនូវផលបុណ្យរបស់ពួកគេ ។ ហើយអល់ឡោះមិនស្រឡាញ់ពួកដែលបំពានឡើយ ។

ذَٰلِكَ نَتْلُوهُ عَلَيْكَ مِنَ ٱلْءَايَٰتِ وَٱلذِّكْرِ ٱلْحَكِيمِ ﴿٥٨﴾

៥៨-រឿងនោះហើយដែលយើងពណ៌នាវាប្រាប់អ្នក(មូហាំម៉ាត់) អំពីភស្តុតាងផ្សេងៗ និងអំពីគម្ពីរគួរអានដែលពោរពេញទៅដោយគតិបណ្ឌិត ។

إِنَّ مَثَلَ عِيسَىٰ عِندَ ٱللَّهِ كَمَثَلِ ءَادَمَۖ خَلَقَهُۥ مِن تُرَابٍ ثُمَّ قَالَ لَهُۥ

៥៩-ពិតប្រាកដណាស់ ការប្រៀបធៀប(ការបង្កើត) អ៊ីសាសម្រាប់អល់ឡោះដូចជា(ការបង្កើត) អាដាំដែរ គឺទ្រង់បានបង្កើតគាត់ពីដី បន្ទាប់មកទ្រង់បានមានបន្ទូលទៅកាន់គាត់ថា: ចូរកើតចុះ

---

១-ពួកក្បត់ក្នុងចំណោមអំបូរអ៊ីស្រាអែលបានប្រើល្បិចកលក្បត់អ៊ីសា ដោយបានប្រគល់តួនាទីឱ្យបុគ្គលម្នាក់ដើម្បីសម្លាប់អ៊ីសា ។ ពេលនោះអល់ឡោះបានធ្វើឱ្យបុរសម្នាក់មានរូបរាងដូចអ៊ីសាបង្ហាញដល់ពួកនោះ ពេលនោះពួកគេចាប់យកបុរសនោះទៅសម្លាប់ និងចងឆ្កាងដោយភាន់ច្រឡំថានោះជាអ៊ីសា ។

២-ទណ្ឌកម្មក្នុងលោកិយដោយសម្លាប់ រឹបអូសទ្រព្យសម្បត្តិ និងដកឋានៈ ចំណែកឯទារុណកម្មនៅបរលោកវិញគឺភ្លើងនរក ។

كُن فَيَكُونُ ﴿٥٩﴾

ٱلْحَقُّ مِن رَّبِّكَ فَلَا تَكُن مِّنَ ٱلْمُمْتَرِينَ ﴿٦٠﴾

فَمَنْ حَآجَّكَ فِيهِ مِنۢ بَعْدِ مَا جَآءَكَ مِنَ
ٱلْعِلْمِ فَقُلْ تَعَالَوْا۟ نَدْعُ أَبْنَآءَنَا وَأَبْنَآءَكُمْ
وَنِسَآءَنَا وَنِسَآءَكُمْ وَأَنفُسَنَا وَأَنفُسَكُمْ ثُمَّ
نَبْتَهِلْ فَنَجْعَل لَّعْنَتَ ٱللَّهِ عَلَى
ٱلْكَـٰذِبِينَ ﴿٦١﴾

إِنَّ هَـٰذَا لَهُوَ ٱلْقَصَصُ ٱلْحَقُّ ۚ وَمَا مِنْ إِلَـٰهٍ
إِلَّا ٱللَّهُ ۚ وَإِنَّ ٱللَّهَ لَهُوَ ٱلْعَزِيزُ ٱلْحَكِيمُ ﴿٦٢﴾

فَإِن تَوَلَّوْا۟ فَإِنَّ ٱللَّهَ عَلِيمٌۢ بِٱلْمُفْسِدِينَ ﴿٦٣﴾

قُلْ يَـٰٓأَهْلَ ٱلْكِتَـٰبِ تَعَالَوْا۟ إِلَىٰ كَلِمَةٍ سَوَآءٍۭ
بَيْنَنَا وَبَيْنَكُمْ أَلَّا نَعْبُدَ إِلَّا ٱللَّهَ وَلَا نُشْرِكَ بِهِۦ
شَيْـًٔا وَلَا يَتَّخِذَ بَعْضُنَا بَعْضًا أَرْبَابًا مِّن
دُونِ ٱللَّهِ ۚ فَإِن تَوَلَّوْا۟ فَقُولُوا۟ ٱشْهَدُوا۟ بِأَنَّا
مُسْلِمُونَ ﴿٦٤﴾

يَـٰٓأَهْلَ ٱلْكِتَـٰبِ لِمَ تُحَآجُّونَ فِىٓ إِبْرَٰهِيمَ
وَمَآ أُنزِلَتِ ٱلتَّوْرَىٰةُ وَٱلْإِنجِيلُ إِلَّا مِنۢ
بَعْدِهِۦٓ ۚ أَفَلَا تَعْقِلُونَ ﴿٦٥﴾

វាក៏កើតឡើងភ្លាម ។

៦០-នេះជាការពិតមកពីម្ចាស់របស់អ្នក( មូហាំម៉ាត់) ដូច្នេះ ចូរអ្នកកុំក្លាយជាអ្នកដែលស្ថិតនៅក្នុងចំណោមអ្នកដែលសង្ស័យ ។

៦១-ហើយអ្នកណាដែលបានជជែកដេញដោលអ្នកអំពីរឿងនោះ( រឿងរបស់អ៊ីសា) ក្រោយពីចំណេះដឹងបានមកដល់អ្នកហើយនោះ ចូរអ្នកពោលថា: សូមពួកអ្នកមកទីនេះ! យើងនឹងហៅកូនចៅរបស់ពួកយើងនិងកូនចៅរបស់ពួកអ្នក និងភរិយារបស់ពួកយើង និងភរិយារបស់ពួកអ្នក និងខ្លួនពួកយើងនិងខ្លួនពួកអ្នក បន្ទាប់មកពួកយើងនឹងអង្វរសុំ( អល់ឡោះ) ឱ្យការដាក់បណ្តាសារបស់អល់ឡោះធ្លាក់ទៅលើពួកដែលភូតកុហក ។

៦២-ពិតប្រាកដណាស់ នេះគឺជារឿងពិត ។ ហើយគ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីអល់ឡោះឡើយ ។ ហើយពិតប្រាកដណាស់ អល់ឡោះគឺជាម្ចាស់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

៦៣-ហើយប្រសិនបើពួកគេបែរចេញ( ពីការពិត) ពិតប្រាកដណាស់ អល់ឡោះមហាដឹងចំពោះពួកដែលបង្កវិនាសកម្ម ។

៦៤-ចូរអ្នក( មូហាំម៉ាត់) ពោលថា: ឱអះលីគីតាប! ចូរពួកអ្នកត្រឡប់មករកពាក្យសំដីមួយដែលស្មើភាពគ្នារវាងពួកយើង និងពួកអ្នកគឺពួកយើងទាំងអស់គ្នាមិនត្រូវគោរពសក្ការៈម្ចាស់ផ្សេងពីអល់ឡោះ និងមិនត្រូវធ្វើស្ហ៊ីរិកនឹងទ្រង់នូវប្រការណាមួយឡើយ ហើយពួកយើងក៏មិនត្រូវយកគ្នាឯងធ្វើជាម្ចាស់ផ្សេងពីអល់ឡោះដែរ ។ តែប្រសិនបើពួកគេនៅតែបែរចេញ( ពីការអំពាវនាវដ៏ល្អនេះ) ទៀត ចូរពួកអ្នក( អ្នកមានជំនឿ) និយាយទៅកាន់ពួកគេថា: ចូរដឹង ឮផងថា: ពិតប្រាកដណាស់ ពួកយើងគឺជាមូស្លីម ។

៦៥-ឱអះលីគីតាប! ហេតុអ្វីបានជាពួកអ្នកឈ្លោះប្រកែកគ្នាក្នុងរឿងអ៊ីព្រហ៊ីម ខណៈដែលគម្ពីរតាវរ៉តនិងគម្ពីរអ៊ិញជីលត្រូវបានគេបញ្ចុះក្រោយពីអ៊ីព្រហ៊ីមនោះ? តើពួកអ្នកមិនពិចារណាទេឬ?

هَٰٓأَنتُمۡ هَٰٓؤُلَآءِ حَٰجَجۡتُمۡ فِيمَا لَكُم بِهِۦ عِلۡمٞ
فَلِمَ تُحَآجُّونَ فِيمَا لَيۡسَ لَكُم بِهِۦ عِلۡمٞۚ
وَٱللَّهُ يَعۡلَمُ وَأَنتُمۡ لَا تَعۡلَمُونَ (٦٦)

៦៦-ពួកអ្នកទាំងនេះហើយ គឺជាពួកដែលបានឈ្លោះប្រកែកគ្នាចំពោះអ្វីដែលពួកអ្នកដឹងពីមូលហេតុរបស់វា តែហេតុអ្វីបានជាពួកអ្នកឈ្លោះប្រកែកគ្នាចំពោះអ្វី( រឿងអ៊ីព្រហ៊ីម) ដែលពួកអ្នកមិនដឹងពីមូលហេតុរបស់វានោះ? ហើយអល់ឡោះដឹង តែពួកអ្នកមិនដឹងឡើយ ។

مَا كَانَ إِبۡرَٰهِيمُ يَهُودِيّٗا وَلَا نَصۡرَانِيّٗا وَلَٰكِن
كَانَ حَنِيفٗا مُّسۡلِمٗا وَمَا كَانَ مِنَ
ٱلۡمُشۡرِكِينَ (٦٧)

៦៧-អ៊ីព្រហ៊ីមមិនមែនជាយ៉ាហ៊ូទីឡើយ ហើយក៏មិនមែនជាណាសរ៉នីដែរ តែគាត់ជាអ្នកស្អាតស្អំ( អំពីប្រការស្ហ៊ីរិក) ជាមូស្លីម ហើយគាត់ក៏ពុំមែនជាមនុស្សម្នាក់ក្នុងចំណោមពួកស្ហ៊ីរិកដែរ ។

إِنَّ أَوۡلَى ٱلنَّاسِ بِإِبۡرَٰهِيمَ لَلَّذِينَ ٱتَّبَعُوهُ
وَهَٰذَا ٱلنَّبِيُّ وَٱلَّذِينَ ءَامَنُواْۗ وَٱللَّهُ وَلِيُّ
ٱلۡمُؤۡمِنِينَ (٦٨)

៦៨-ពិតប្រាកដណាស់ មនុស្សដែលជិតស្និទ្ធនឹងអ៊ីព្រហ៊ីមបំផុតនោះ គឺអ្នកដែលតាមគាត់ និងណាពីរូបនេះ( មូហាំម៉ាត់) និងបណ្ដាអ្នកដែលមានជំនឿ( នឹងមូហាំម៉ាត់) ។ ហើយអល់ឡោះជាអ្នកគាំពារបណ្ដាអ្នកដែលមានជំនឿ ។

وَدَّت طَّآئِفَةٞ مِّنۡ أَهۡلِ ٱلۡكِتَٰبِ لَوۡ يُضِلُّونَكُمۡ
وَمَا يُضِلُّونَ إِلَّآ أَنفُسَهُمۡ وَمَا
يَشۡعُرُونَ (٦٩)

៦៩-មួយក្រុមអំពីអះលីគីតាបប្រាថ្នាចង់ធ្វើឱ្យពួកអ្នកវង្វេង តែពួកគេមិនអាចធ្វើឱ្យអ្នកណាម្នាក់វង្វេងក្រៅពីខ្លួនឯងនោះទេ តែពួកគេមិនដឹងខ្លួនឡើយ ។

يَٰٓأَهۡلَ ٱلۡكِتَٰبِ لِمَ تَكۡفُرُونَ بِـَٔايَٰتِ ٱللَّهِ
وَأَنتُمۡ تَشۡهَدُونَ (٧٠)

៧០-ឱអះលីគីតាប! ហេតុអ្វីបានជាពួកអ្នកប្រឆាំងនឹងអាយ៉ាត់ៗរបស់អល់ឡោះ ខណៈដែលពួកអ្នកដឹងឮហើយនោះ?

يَٰٓأَهۡلَ ٱلۡكِتَٰبِ لِمَ تَلۡبِسُونَ ٱلۡحَقَّ
بِٱلۡبَٰطِلِ وَتَكۡتُمُونَ ٱلۡحَقَّ وَأَنتُمۡ
تَعۡلَمُونَ (٧١)

៧១-ឱអះលីគីតាប! ហេតុអ្វីបានជាពួកអ្នកលាយឡំប្រការពិតនឹងប្រការមិនពិត ហើយពួកអ្នកលាក់បាំងការពិត ខណៈដែលពួកអ្នកដឹងហើយនោះ?

وَقَالَت طَّآئِفَةٞ مِّنۡ أَهۡلِ ٱلۡكِتَٰبِ ءَامِنُواْ
بِٱلَّذِيٓ أُنزِلَ عَلَى ٱلَّذِينَ ءَامَنُواْ وَجۡهَ
ٱلنَّهَارِ وَٱكۡفُرُوٓاْ ءَاخِرَهُۥ لَعَلَّهُمۡ يَرۡجِعُونَ (٧٢)

៧២-ហើយមួយក្រុមអំពីអះលីគីតាបបាននិយាយថា: ចូរពួកអ្នកជឿតាមអ្វីដែលគេបានបញ្ចុះឱ្យបណ្ដាអ្នកមានជំនឿ( ជំនាន់មូហាំម៉ាត់) នៅពេលព្រឹក ហើយត្រូវបដិសេធនៅពេលល្ងាច ដើម្បីឱ្យអ្នកទាំងនោះ( អ្នកមានជំនឿ) ត្រឡប់ទៅរកសាសនារបស់ពួកគេ( អះលីគីតាប) ។

وَلَا تُؤْمِنُوٓا۟ إِلَّا لِمَن تَبِعَ دِينَكُمْ قُلْ إِنَّ
ٱلْهُدَىٰ هُدَى ٱللَّهِ أَن يُؤْتَىٰٓ أَحَدٌ مِّثْلَ مَآ
أُوتِيتُمْ أَوْ يُحَآجُّوكُمْ عِندَ رَبِّكُمْ ۗ قُلْ إِنَّ
ٱلْفَضْلَ بِيَدِ ٱللَّهِ يُؤْتِيهِ مَن يَشَآءُ ۗ وَٱللَّهُ
وَٰسِعٌ عَلِيمٌ ﴿٧٣﴾

៧៣-ហើយពួកអ្នកមិនត្រូវជឿលើនរណាម្នាក់ឡើយ លើកលែងតែអ្នកណាដែលកាន់តាមសាសនារបស់ពួកអ្នកប៉ុណ្ណោះ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពិតប្រាកដណាស់ ការចង្អុលបង្ហាញ(ដ៏ត្រឹមត្រូវ)នោះគឺជាការចង្អុលបង្ហាញរបស់អល់ឡោះ។ (ពួកនោះនិយាយទៀតថាៈ មិនត្រូវជឿថា)មាននរណាម្នាក់ត្រូវគេផ្ដល់ឱ្យដូចអ្វីដែលគេបានផ្ដល់ឱ្យពួកអ្នក ឬពួកគេអាចយកឈ្នះពួកអ្នកនៅចំពោះមុខម្ចាស់របស់ពួកអ្នកបាននោះឡើយ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពិតប្រាកដណាស់ ការប្រោសប្រទាននោះគឺនៅក្នុងកណ្ដាប់ដៃរបស់អល់ឡោះ ទ្រង់នឹងប្រទានឱ្យអ្នកណាដែលទ្រង់មានចេតនា។ ហើយអល់ឡោះមហាទូលំទូលាយ មហាដឹង។

يَخْتَصُّ بِرَحْمَتِهِۦ مَن يَشَآءُ ۗ وَٱللَّهُ
ذُو ٱلْفَضْلِ ٱلْعَظِيمِ ﴿٧٤﴾

៧៤-អល់ឡោះមានសិទ្ធិកំណត់ក្ដីមេត្តាករុណារបស់ទ្រង់(តែងតាំងជាណាពី)ទៅលើបុគ្គលណាដែលទ្រង់មានចេតនា។ ហើយអល់ឡោះមានសប្បុរសធម៌ដ៏ធំធេង។

۞ وَمِنْ أَهْلِ ٱلْكِتَٰبِ مَنْ إِن تَأْمَنْهُ بِقِنطَارٍ
يُؤَدِّهِۦٓ إِلَيْكَ وَمِنْهُم مَّنْ إِن تَأْمَنْهُ بِدِينَارٍ لَّا
يُؤَدِّهِۦٓ إِلَيْكَ إِلَّا مَا دُمْتَ عَلَيْهِ قَآئِمًا ۗ ذَٰلِكَ
بِأَنَّهُمْ قَالُوا۟ لَيْسَ عَلَيْنَا فِى ٱلْأُمِّيِّـۧنَ سَبِيلٌ
وَيَقُولُونَ عَلَى ٱللَّهِ ٱلْكَذِبَ وَهُمْ
يَعْلَمُونَ ﴿٧٥﴾

៧៥-ហើយក្នុងចំណោមពួកអះលីគីតាប មានអ្នកខ្លះប្រសិនបើអ្នកទុកចិត្តគេដោយផ្ញើទ្រព្យសម្បត្តិជាច្រើន គេនឹងប្រគល់វាឱ្យអ្នកវិញ។ ហើយមានអ្នកខ្លះទៀត ប្រសិនបើអ្នកទុកចិត្តគេដោយផ្ញើតែមួយឌីណើរ[1]ក៏ដោយ គេនឹងមិនប្រគល់ឱ្យអ្នកវិញឡើយ ទាល់តែអ្នកព្យាយាមទារវិញដោយញឹកញាប់។ នោះគឺដោយសារតែពួកគេនិយាយថាៈ គ្មានទោសពៃរ៍អ្វីមកលើពួកយើងចំពោះពួកដែលមិនចេះអក្សរឡើយ។ ហើយពួកគេកំពុងតែនិយាយកុហកទៅលើអល់ឡោះ ខណៈដែលពួកគេដឹងហើយនោះ។

بَلَىٰ مَنْ أَوْفَىٰ بِعَهْدِهِۦ وَٱتَّقَىٰ فَإِنَّ ٱللَّهَ يُحِبُّ
ٱلْمُتَّقِينَ ﴿٧٦﴾

៧៦-ការពិតមិនមែនដូច្នោះទេ អ្នកណាដែលគោរពតាមការសន្យារបស់គេ និងកោតខ្លាចអល់ឡោះនោះ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្ដាអ្នកដែលកោតខ្លាចទ្រង់។

إِنَّ ٱلَّذِينَ يَشْتَرُونَ بِعَهْدِ ٱللَّهِ وَأَيْمَٰنِهِمْ ثَمَنًا

៧៧-ពិតប្រាកដណាស់ ពួកដែលយកកិច្ចសន្យារបស់អល់ឡោះ និងការស្បថរបស់ខ្លួនទៅប្ដូរយកកម្រៃបន្តិចបន្តួច ពួកទាំងនោះគ្មាន

---

១-ឌីណើរ : គឺជារូបិយប័ណ្ណរបស់ជនជាតិអារ៉ាប់ជំនាន់ដើម ហើយឌីណើរនៅក្នុងវាក្យខណ្ឌនេះគឺជាទ្រព្យសម្បត្តិដ៏តិចបំផុត។

قَلِيلاً أُوْلَـٰٓئِكَ لَا خَلَـٰقَ لَهُمْ فِى ٱلْـَٔاخِرَةِ وَلَا يُكَلِّمُهُمُ ٱللَّهُ وَلَا يَنظُرُ إِلَيْهِمْ يَوْمَ ٱلْقِيَـٰمَةِ وَلَا يُزَكِّيهِمْ وَلَهُمْ عَذَابٌ أَلِيمٌ ﴿٧٧﴾

ផលបុណ្យសម្រាប់ពួកគេឡើយនៅថ្ងៃបរលោក ។ ហើយអល់ឡោះនឹងមិននិយាយរកពួកគេ និងមិនមើលពួកគេឡើយនៅថ្ងៃបរលោក ហើយទ្រង់ក៏មិនសំអាតពួកគេ(ពីបាបកម្ម)ដែរ ។ ហើយពួកគេនឹងទទួលទារុណកម្មដ៏ឈឺចាប់បំផុត ។

وَإِنَّ مِنْهُمْ لَفَرِيقًا يَلْوُۥنَ أَلْسِنَتَهُم بِٱلْكِتَـٰبِ لِتَحْسَبُوهُ مِنَ ٱلْكِتَـٰبِ وَمَا هُوَ مِنَ ٱلْكِتَـٰبِ وَيَقُولُونَ هُوَ مِنْ عِندِ ٱللَّهِ وَمَا هُوَ مِنْ عِندِ ٱللَّهِ وَيَقُولُونَ عَلَى ٱللَّهِ ٱلْكَذِبَ وَهُمْ يَعْلَمُونَ ﴿٧٨﴾

៧៨-ហើយពិតប្រាកដណាស់នៅក្នុងចំណោមពួកគេ(អះលីគីតាប)គឺមានក្រុមមួយដែលរលាស់អណ្តាតរបស់ពួកគេក្នុងការសូត្រគម្ពីរ(តាវរ៉ត)ដើម្បីឱ្យពួកអ្នកស្មានថា វាជាផ្នែកមួយនៃគម្ពីរ តែតាមពិតវាមិនមែនជាផ្នែកមួយនៃគម្ពីរឡើយ ។ ហើយពួកគេនិយាយថាៈវាមកពីអល់ឡោះ តែតាមការពិតវាមិនមែនមកពីអល់ឡោះឡើយ ។ ហើយពួកគេកំពុងតែនិយាយកុហកទៅលើអល់ឡោះ ខណៈដែលពួកគេដឹងហើយនោះ ។

مَا كَانَ لِبَشَرٍ أَن يُؤْتِيَهُ ٱللَّهُ ٱلْكِتَـٰبَ وَٱلْحُكْمَ وَٱلنُّبُوَّةَ ثُمَّ يَقُولَ لِلنَّاسِ كُونُوا۟ عِبَادًا لِّى مِن دُونِ ٱللَّهِ وَلَـٰكِن كُونُوا۟ رَبَّـٰنِيِّـۧنَ بِمَا كُنتُمْ تُعَلِّمُونَ ٱلْكِتَـٰبَ وَبِمَا كُنتُمْ تَدْرُسُونَ ﴿٧٩﴾

៧៩-មិនគប្បីទេចំពោះមនុស្សដែលអល់ឡោះផ្តល់ឱ្យគេនូវគម្ពីរ និងភាពឈ្លាសវៃ និងការចាត់តាំងជាណាពី រួចគេពោលទៅកាន់មនុស្សលោកថាៈ ចូរពួកអ្នកតាំងខ្លួនជាអ្នកគោរពសក្ការៈមកចំពោះខ្ញុំផ្សេងពីអល់ឡោះ ។ តែ(ពួកគេត្រូវនិយាយថា) ចូរពួកអ្នកតាំងខ្លួនជារ៉ប់ហ្ពានី[1] ឱ្យសមនឹងអ្វីដែលពួកអ្នកបានបង្រៀនគម្ពីរ(ដល់មនុស្សលោក)និងអ្វីដែលពួកអ្នកបានរៀនសូត្រកន្លងមក ។

وَلَا يَأْمُرَكُمْ أَن تَتَّخِذُوا۟ ٱلْمَلَـٰٓئِكَةَ وَٱلنَّبِيِّـۧنَ أَرْبَابًا ۗ أَيَأْمُرُكُم بِٱلْكُفْرِ بَعْدَ إِذْ أَنتُم مُّسْلِمُونَ ﴿٨٠﴾

៨០-ហើយគេក៏មិនគប្បីប្រើពួកអ្នកឱ្យយកបណ្តាម៉ាឡាអ៊ីកាត់ និងណាពីធ្វើជាម្ចាស់ដែរ ។ តើសមទេគេប្រើពួកអ្នកឱ្យប្រឆាំងនឹងអល់ឡោះបន្ទាប់ពីពួកអ្នកក្លាយជាអ្នកមូស្លីមហើយនោះ ។

وَإِذْ أَخَذَ ٱللَّهُ مِيثَـٰقَ ٱلنَّبِيِّـۧنَ لَمَآ ءَاتَيْتُكُم مِّن كِتَـٰبٍ وَحِكْمَةٍ ثُمَّ جَآءَكُمْ رَسُولٌ مُّصَدِّقٌ لِّمَا مَعَكُمْ لَتُؤْمِنُنَّ بِهِۦ وَلَتَنصُرُنَّهُۥ ۚ قَالَ ءَأَقْرَرْتُمْ وَأَخَذْتُمْ عَلَىٰ ذَٰلِكُمْ إِصْرِى ۖ

៨១-ហើយ(ចូរចងចាំ)នៅពេលដែលអល់ឡោះបានយកកិច្ចសន្យាពីបណ្តាណាពីថាៈ ពិតប្រាកដណាស់ អ្វីដែលយើងបានផ្តល់ឱ្យពួកអ្នកនូវគម្ពីរនិងភាពឈ្លាសវៃ បន្ទាប់មកអ្នកនាំសារបានមកដល់ពួកអ្នក ដើម្បីបញ្ជាក់អំពីអ្វីដែលមាននៅជាមួយពួកអ្នក គឺពួកអ្នកត្រូវតែជឿជាក់នឹងគេនិងជួយគាំទ្រគេ ។ អល់ឡោះបានមានបន្ទូលថាៈ តើពួកអ្នកព្រមទទួលនិងយកកិច្ចសន្យារបស់យើងទៅលើរឿង

១-រ៉ប់ហ្ពានី : គឺជាមនុស្សដែលមានចំណេះដឹងជ្រៅជ្រះ និងមានការកោតខ្លាចដ៏ស្មោះត្រង់ចំពោះអល់ឡោះ ។

قَالُوٓاْ أَقۡرَرۡنَاۚ قَالَ فَٱشۡهَدُواْ وَأَنَا۠ مَعَكُم مِّنَ
ٱلشَّٰهِدِينَ ٨١

នោះដែរឬទេ? ពួកគេឆ្លើយថា: ពួកយើងព្រមទទួលហើយ ។ ទ្រង់បានមានបន្ទូលថា: ចូរពួកអ្នកធ្វើសាក្សី(លើរឿងនេះ)ចុះ ហើយយើងក៏ធ្វើសាក្សីជាមួយពួកអ្នកដែរ ។

فَمَن تَوَلَّىٰ بَعۡدَ ذَٰلِكَ فَأُوْلَٰٓئِكَ هُمُ
ٱلۡفَٰسِقُونَ ٨٢

៨២-តែបើអ្នកណាបានបែរចេញ(ពីកិច្ចសន្យា)ក្រោយពីនោះ គឺពួកទាំងនោះហើយជាពួកដែលមិនគោរពតាមបទបញ្ជា ។

أَفَغَيۡرَ دِينِ ٱللَّهِ يَبۡغُونَ وَلَهُۥٓ أَسۡلَمَ مَن فِي
ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ طَوۡعٗا وَكَرۡهٗا
وَإِلَيۡهِ يُرۡجَعُونَ ٨٣

៨៣-តើពួកគេស្វែងរកសាសនាផ្សេងក្រៅពីសាសនារបស់អល់ឡោះឬ ខណៈដែលអ្នកនៅលើមេឃជាច្រើនជាន់ និងផែនដីគឺសុទ្ធតែប្រគល់ខ្លួនចំពោះទ្រង់ដោយស្ម័គ្រចិត្តនិងមិនស្ម័គ្រចិត្ត ហើយចំពោះទ្រង់ដែលពួកគេត្រូវវិលត្រឡប់នោះ?

قُلۡ ءَامَنَّا بِٱللَّهِ وَمَآ أُنزِلَ عَلَيۡنَا وَمَآ أُنزِلَ عَلَىٰٓ
إِبۡرَٰهِيمَ وَإِسۡمَٰعِيلَ وَإِسۡحَٰقَ وَيَعۡقُوبَ
وَٱلۡأَسۡبَاطِ وَمَآ أُوتِيَ مُوسَىٰ وَعِيسَىٰ
وَٱلنَّبِيُّونَ مِن رَّبِّهِمۡ لَا نُفَرِّقُ بَيۡنَ أَحَدٖ
مِّنۡهُمۡ وَنَحۡنُ لَهُۥ مُسۡلِمُونَ ٨٤

៨៤-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ពួកយើងមានជំនឿលើអល់ឡោះ និងអ្វីដែលគេបានបញ្ចុះមកលើពួកយើង និងអ្វីដែលគេបានបញ្ចុះទៅលើអុីព្រហុីម អុីស្មាអុីល អុីស្ហាក យ៉ាក់កូប និងបណ្ដាកូនចៅរបស់គាត់ ហើយនិងអ្វីដែលគេបានផ្ដល់ឱ្យមូសា អុីសា និងបណ្ដាណាពីៗ(ដែលបានចាត់តាំង)ពីម្ចាស់របស់ពួកគេ ។ ពួកយើងមិនបែងចែកនរណាម្នាក់ក្នុងចំណោមពួកគេឡើយ ហើយពួកយើងគឺជាអ្នកប្រគល់ខ្លួនចំពោះទ្រង់ ។

وَمَن يَبۡتَغِ غَيۡرَ ٱلۡإِسۡلَٰمِ دِينٗا فَلَن يُقۡبَلَ مِنۡهُ
وَهُوَ فِي ٱلۡأٓخِرَةِ مِنَ ٱلۡخَٰسِرِينَ ٨٥

៨៥-ហើយអ្នកណាដែលស្វែងរកសាសនាផ្សេងក្រៅពីសាសនាអុីស្លាម អល់ឡោះនឹងមិនទទួលយក(ទង្វើល្អ)ពីគេឡើយ ។ ហើយនៅថ្ងៃបរលោកគេនឹងស្ថិតនៅក្នុងចំណោមពួកដែលខាតបង់ ។

كَيۡفَ يَهۡدِي ٱللَّهُ قَوۡمٗا كَفَرُواْ بَعۡدَ إِيمَٰنِهِمۡ
وَشَهِدُوٓاْ أَنَّ ٱلرَّسُولَ حَقّٞ وَجَآءَهُمُ ٱلۡبَيِّنَٰتُۚ
وَٱللَّهُ لَا يَهۡدِي ٱلۡقَوۡمَ ٱلظَّٰلِمِينَ ٨٦

៨៦-តើឱ្យអល់ឡោះចង្អុលបង្ហាញយ៉ាងដូចម្ដេច? ចំពោះក្រុមមួយដែលបានប្រឆាំងបន្ទាប់ពីពួកគេមានជំនឿ ហើយពួកគេក៏បានទទួលស្គាល់ដែរថា: ពិតប្រាកដណាស់ អ្នកនាំសារ(មូហាំម៉ាត់)គឺជាការពិត ហើយភស្តុតាងទាំងឡាយក៏បានមកដល់ពួកគេដែរ ។ ហើយអល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលបំពានឡើយ ។

أُوْلَٰٓئِكَ جَزَآؤُهُمۡ أَنَّ عَلَيۡهِمۡ لَعۡنَةَ ٱللَّهِ
وَٱلۡمَلَٰٓئِكَةِ وَٱلنَّاسِ أَجۡمَعِينَ ٨٧

៨៧-ពួកទាំងនោះ ការតបស្នងរបស់ពួកគេគឺត្រូវបណ្ដាសាពីអល់ឡោះ និងបណ្ដាម៉ាឡាអុីកាត់ និងមនុស្សលោកទាំងអស់ ។

خَٰلِدِينَ فِيهَا لَا يُخَفَّفُ عَنْهُمُ ٱلْعَذَابُ وَلَا هُمْ يُنظَرُونَ ﴿٨٨﴾

៨៨-ពួកគេនឹងស្ថិតនៅក្នុងនោះ(ភ្លើងនរក)ជាអមតៈ។ ទារុណកម្មមិនត្រូវបានបន្ធូរបន្ថយចំពោះពួកគេឡើយ ហើយពួកគេក៏មិនត្រូវបានពន្យារពេល(ឱ្យដោះសា)ដែរ។

إِلَّا ٱلَّذِينَ تَابُوا۟ مِنۢ بَعْدِ ذَٰلِكَ وَأَصْلَحُوا۟ فَإِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ ﴿٨٩﴾

៨៩-លើកលែងតែបណ្ដាអ្នកដែលបានសារភាពទោសកំហុស និងបានកែខ្លួនបន្ទាប់ពីនោះប៉ុណ្ណោះ។ ពិតប្រាកដណាស់ អល់ឡោះ មហាអភ័យទោស មហាអាណិតស្រឡាញ់។

إِنَّ ٱلَّذِينَ كَفَرُوا۟ بَعْدَ إِيمَٰنِهِمْ ثُمَّ ٱزْدَادُوا۟ كُفْرًا لَّن تُقْبَلَ تَوْبَتُهُمْ وَأُو۟لَٰٓئِكَ هُمُ ٱلضَّآلُّونَ ﴿٩٠﴾

៩០-ពិតប្រាកដណាស់ ពួកដែលបានប្រឆាំងក្រោយពីពួកគេមានជំនឿរួច បន្ទាប់មកពួកគេនៅតែបន្ថែមការប្រឆាំងទៀត អល់ឡោះនឹងមិនទទួលយកការសារភាពទោសកំហុសរបស់ពួកគេឡើយ។ ហើយពួកទាំងនោះគឺជាពួកដែលវង្វេង។

إِنَّ ٱلَّذِينَ كَفَرُوا۟ وَمَاتُوا۟ وَهُمْ كُفَّارٌ فَلَن يُقْبَلَ مِنْ أَحَدِهِم مِّلْءُ ٱلْأَرْضِ ذَهَبًا وَلَوِ ٱفْتَدَىٰ بِهِۦٓ ۗ أُو۟لَٰٓئِكَ لَهُمْ عَذَابٌ أَلِيمٌ وَمَا لَهُم مِّن نَّٰصِرِينَ ﴿٩١﴾

៩១-ពិតប្រាកដណាស់ ពួកដែលប្រឆាំងហើយបានស្លាប់ក្នុងភាពជាអ្នកប្រឆាំងនោះ បើមានមាសប្រាក់ពេញផែនដី ក៏គេមិនទទួលយកពីនរណាម្នាក់ក្នុងចំណោមពួកគេដែរ ទោះបីគេយកវាមកលោះ(ឱ្យរួចផុតពីទារុណកម្ម)ក៏ដោយ។ ពួកទាំងនោះនឹងទទួលទារុណកម្មដ៏សែនឈឺចាប់ ហើយពួកគេគ្មានអ្នកណាជួយឡើយ។

لَن تَنَالُوا۟ ٱلْبِرَّ حَتَّىٰ تُنفِقُوا۟ مِمَّا تُحِبُّونَ ۚ وَمَا تُنفِقُوا۟ مِن شَىْءٍ فَإِنَّ ٱللَّهَ بِهِۦ عَلِيمٌ ﴿٩٢﴾

៩២-ពួកអ្នកនឹងមិនអាចទទួលបានផលល្អឡើយ លុះត្រាតែពួកអ្នកបរិច្ចាគមួយចំនួននូវអ្វីដែលពួកអ្នកស្រឡាញ់ ហើយអ្វីក៏ដោយដែលពួកអ្នកបរិច្ចាគនោះ ពិតប្រាកដណាស់អល់ឡោះដឹងបំផុតចំពោះវា។

۞ كُلُّ ٱلطَّعَامِ كَانَ حِلًّا لِّبَنِىٓ إِسْرَٰٓءِيلَ إِلَّا مَا حَرَّمَ إِسْرَٰٓءِيلُ عَلَىٰ نَفْسِهِۦ مِن قَبْلِ أَن تُنَزَّلَ ٱلتَّوْرَىٰةُ ۗ قُلْ فَأْتُوا۟ بِٱلتَّوْرَىٰةِ فَٱتْلُوهَآ إِن كُنتُمْ صَٰدِقِينَ ﴿٩٣﴾

៩៣-ម្ហូបអាហារទាំងអស់សុទ្ធតែត្រូវបានអនុញ្ញាតសម្រាប់អំបូរអ៊ីស្រាអែល លើកលែងតែអ្វីដែលអ៊ីស្រាអែល(យ៉ាក់កូប)បានហាមឃាត់ចំពោះខ្លួនឯងប៉ុណ្ណោះ មុនពេលដែលអល់ឡោះបានបញ្ចុះគម្ពីរតាវរ៉ាតនោះ។ ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកយកគម្ពីរតាវរ៉ាតមក ហើយពួកអ្នកអានវាមើល ប្រសិនបើពួកអ្នកជាអ្នកត្រឹមត្រូវមែននោះ។

فَمَنِ ٱفْتَرَىٰ عَلَى ٱللَّهِ ٱلْكَذِبَ مِنۢ بَعْدِ ذَٰلِكَ فَأُو۟لَٰٓئِكَ هُمُ ٱلظَّٰلِمُونَ ﴿٩٤﴾

៩៤-ហើយអ្នកណាដែលប្រឌិតរឿងកុហកប្រឆាំងនឹងអល់ឡោះបន្ទាប់ពីនោះ ពួកទាំងនោះហើយគឺជាពួកដែលបំពាន។

قُلۡ صَدَقَ ٱللَّهُۗ فَٱتَّبِعُواْ مِلَّةَ إِبۡرَٰهِيمَ حَنِيفٗا وَمَا كَانَ مِنَ ٱلۡمُشۡرِكِينَ ٩٥

៩៥-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ អល់ឡោះបានមានបន្ទូលពិត ។ ដូច្នេះ ចូរពួកអ្នកប្រតិបត្តិតាមសាសនារបស់អ៊ីព្រហ៊ីមដ៏ត្រឹមត្រូវចុះ ។ ហើយគាត់ពុំមែនជាអ្នកស្ថិតក្នុងចំណោមអ្នកដែលធ្វើស្ហ៊ីរិកឡើយ ។

إِنَّ أَوَّلَ بَيۡتٖ وُضِعَ لِلنَّاسِ لَلَّذِي بِبَكَّةَ مُبَارَكٗا وَهُدٗى لِّلۡعَٰلَمِينَ ٩٦

៩៦-ពិតប្រាកដណាស់ ផ្ទះ(ទីកន្លែងគោរពសក្ការៈ)ដំបូងបង្អស់ដែលគេបានដាក់សម្រាប់មនុស្សលោកនោះគឺនៅឯម៉ាក្កះដែលពោរពេញទៅដោយពរជ័យនិងជាការចង្អុលបង្ហាញសម្រាប់មនុស្សលោកទាំងអស់ ។

فِيهِ ءَايَٰتُۢ بَيِّنَٰتٞ مَّقَامُ إِبۡرَٰهِيمَۖ وَمَن دَخَلَهُۥ كَانَ ءَامِنٗاۗ وَلِلَّهِ عَلَى ٱلنَّاسِ حِجُّ ٱلۡبَيۡتِ مَنِ ٱسۡتَطَاعَ إِلَيۡهِ سَبِيلٗاۚ وَمَن كَفَرَ فَإِنَّ ٱللَّهَ غَنِيٌّ عَنِ ٱلۡعَٰلَمِينَ ٩٧

៩៧-នៅទីនោះ មានភស្តុតាងដ៏ច្បាស់លាស់ជាច្រើន ដូចជាម៉ាកមអ៊ីព្រហ៊ីមជាដើម ។ ហើយអ្នកណាបានចូលទៅទីនោះគេនឹងមានសុខសន្តិភាព ។ ហើយអល់ឡោះបានដាក់កាតព្វកិច្ចលើមនុស្សលោកឱ្យធ្វើបុណ្យហាជ្ជីនៅផ្ទះរបស់អល់ឡោះ(ម៉ាក្កះ)ចំពោះអ្នកដែលមានលទ្ធភាពទៅដល់ ។ ហើយបើអ្នកណាបានបដិសេធ ពិតប្រាកដណាស់ អល់ឡោះមិនត្រូវការអ្វីមួយពីពិភពទាំងអស់ឡើយ ។

قُلۡ يَٰٓأَهۡلَ ٱلۡكِتَٰبِ لِمَ تَكۡفُرُونَ بِـَٔايَٰتِ ٱللَّهِ وَٱللَّهُ شَهِيدٌ عَلَىٰ مَا تَعۡمَلُونَ ٩٨

៩៨-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ឱអះលីគីតាប! ហេតុអ្វីបានជាពួកអ្នកប្រឆាំងនឹងអាយ៉ាត់ៗរបស់អល់ឡោះ ខណៈដែលអល់ឡោះជាសាក្សីទៅលើអ្វីដែលពួកអ្នកកំពុងធ្វើនោះ?

قُلۡ يَٰٓأَهۡلَ ٱلۡكِتَٰبِ لِمَ تَصُدُّونَ عَن سَبِيلِ ٱللَّهِ مَنۡ ءَامَنَ تَبۡغُونَهَا عِوَجٗا وَأَنتُمۡ شُهَدَآءُۗ وَمَا ٱللَّهُ بِغَٰفِلٍ عَمَّا تَعۡمَلُونَ ٩٩

៩៩-ចូរអ្នកពោលថាៈ ឱអះលីគីតាប! ហេតុអ្វីបានជាពួកអ្នករារាំងអ្នកដែលមានជំនឿពីមាគ៌ារបស់អល់ឡោះដោយពួកអ្នកចង់ឱ្យវាវៀចវេរ ខណៈដែលពួកអ្នកជាសាក្សីស្រាប់នោះ? ហើយអល់ឡោះមិនព្រងើយកន្តើយអំពីអ្វីដែលពួកអ្នកកំពុងធ្វើឡើយ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِن تُطِيعُواْ فَرِيقٗا مِّنَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ يَرُدُّوكُم بَعۡدَ إِيمَٰنِكُمۡ كَٰفِرِينَ ١٠٠

១០០-ឱបណ្តាអ្នកដែលមានជំនឿ! ប្រសិនបើពួកអ្នកគោរពតាមក្រុមមួយនៃពួកដែលគេផ្តល់គម្ពីរឱ្យ(យ៉ាហ៊ូទី និងណាសរ៉នី) គឺពួកគេនឹងធ្វើឱ្យពួកអ្នកវិលត្រឡប់ទៅជាអ្នកគ្មានជំនឿវិញ បន្ទាប់ពីពួកអ្នកមានជំនឿរួច ។

وَكَيۡفَ تَكۡفُرُونَ وَأَنتُمۡ تُتۡلَىٰ عَلَيۡكُمۡ ءَايَٰتُ ٱللَّهِ وَفِيكُمۡ رَسُولُهُۥۗ وَمَن يَعۡتَصِم بِٱللَّهِ

១០១-ហើយហេតុដូចម្តេចបានជាពួកអ្នកប្រឆាំង ខណៈដែលគេសូត្រអាយ៉ាត់របស់អល់ឡោះឱ្យពួកអ្នកស្តាប់ ហើយនៅជាមួយ

فَقَدۡ هُدِيَ إِلَىٰ صِرَٰطٖ مُّسۡتَقِيمٖ ١٠١

ពួកអ្នកមានអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់)ទៀតនោះ? ហើយអ្នកណាប្រកាន់ខ្ជាប់នឹង(សាសនា)អល់ឡោះ ដូច្នេះអ្នកនោះត្រូវបានគេបង្ហាញទៅកាន់ផ្លូវដ៏ត្រឹមត្រូវ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ حَقَّ تُقَاتِهِۦ وَلَا تَمُوتُنَّ إِلَّا وَأَنتُم مُّسۡلِمُونَ ١٠٢

១០២-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកោតខ្លាចអល់ឡោះនូវការកោតខ្លាចចំពោះទ្រង់ដ៏ពិតប្រាកដ ហើយចូរពួកអ្នកកុំស្លាប់ក្រៅពីពួកអ្នកជាអ្នកមូស្លីមឱ្យសោះ។

وَٱعۡتَصِمُواْ بِحَبۡلِ ٱللَّهِ جَمِيعٗا وَلَا تَفَرَّقُواْۚ وَٱذۡكُرُواْ نِعۡمَتَ ٱللَّهِ عَلَيۡكُمۡ إِذۡ كُنتُمۡ أَعۡدَآءٗ فَأَلَّفَ بَيۡنَ قُلُوبِكُمۡ فَأَصۡبَحۡتُم بِنِعۡمَتِهِۦٓ إِخۡوَٰنٗا وَكُنتُمۡ عَلَىٰ شَفَا حُفۡرَةٖ مِّنَ ٱلنَّارِ فَأَنقَذَكُم مِّنۡهَاۗ كَذَٰلِكَ يُبَيِّنُ ٱللَّهُ لَكُمۡ ءَايَٰتِهِۦ لَعَلَّكُمۡ تَهۡتَدُونَ ١٠٣

១០៣-ហើយចូរពួកអ្នកប្រកាន់ខ្ជាប់នឹងមាគ៌ារបស់អល់ឡោះ(សាសនាអ៊ីស្លាម)ទាំងអស់គ្នា និងមិនត្រូវបែកបាក់គ្នាឡើយ។ ហើយចូរពួកអ្នករំលឹកនៀកម៉ាត់របស់អល់ឡោះដែលទ្រង់បានប្រទានដល់ពួកអ្នក ខណៈដែលពួកអ្នកជាសត្រូវនឹងគ្នា(មុនចូលសាសនាអ៊ីស្លាម) ក្រោយមកទ្រង់បានផ្សះផ្សាររវាងចិត្តរបស់ពួកអ្នក ហើយពួកអ្នកក៏ក្លាយជាបងប្អូននឹងគ្នា(ក្នុងសាសនា)ដោយសារនៀកម៉ាត់របស់ទ្រង់ ហើយកាលពីមុនពួកអ្នកស្ថិតនៅមាត់រណ្ដៅនៃភ្លើងនរក ទ្រង់ក៏បានរំដោះពួកអ្នកចេញពីវា។ ដូច្នោះហើយអល់ឡោះបញ្ជាក់យ៉ាងច្បាស់នូវភស្តុតាងរបស់ទ្រង់ជាច្រើនដល់ពួកអ្នក សង្ឃឹមថាពួកអ្នកនឹងទទួលបានការចង្អុលបង្ហាញ។

وَلۡتَكُن مِّنكُمۡ أُمَّةٞ يَدۡعُونَ إِلَى ٱلۡخَيۡرِ وَيَأۡمُرُونَ بِٱلۡمَعۡرُوفِ وَيَنۡهَوۡنَ عَنِ ٱلۡمُنكَرِۚ وَأُوْلَٰٓئِكَ هُمُ ٱلۡمُفۡلِحُونَ ١٠٤

១០៤-ហើយចូរឱ្យមានក្រុមមួយក្នុងចំណោមពួកអ្នកអំពាវនាវទៅរកផ្លូវល្អ និងប្រើគ្នាឱ្យធ្វើប្រការដែលត្រឹមត្រូវ(តាមច្បាប់អ៊ីស្លាម)និងហាមឃាត់គ្នាអំពីប្រការអាក្រក់។ ហើយអ្នកទាំងនោះគឺជាអ្នកដែលជោគជ័យ។

وَلَا تَكُونُواْ كَٱلَّذِينَ تَفَرَّقُواْ وَٱخۡتَلَفُواْ مِنۢ بَعۡدِ مَا جَآءَهُمُ ٱلۡبَيِّنَٰتُۚ وَأُوْلَٰٓئِكَ لَهُمۡ عَذَابٌ عَظِيمٞ ١٠٥

១០៥-ហើយចូរពួកអ្នកកុំប្រព្រឹត្តដូចពួកដែលបានបែកបាក់គ្នា និងខ្វែងយោបល់គ្នាបន្ទាប់ពីភស្តុតាងយ៉ាងច្បាស់បានមកដល់ពួកគេឱ្យសោះ។ ហើយពួកទាំងនោះនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរ។

يَوۡمَ تَبۡيَضُّ وُجُوهٞ وَتَسۡوَدُّ وُجُوهٞۚ فَأَمَّا ٱلَّذِينَ ٱسۡوَدَّتۡ وُجُوهُهُمۡ أَكَفَرۡتُم بَعۡدَ إِيمَٰنِكُمۡ فَذُوقُواْ ٱلۡعَذَابَ بِمَا كُنتُمۡ تَكۡفُرُونَ ١٠٦

១០៦-នៅថ្ងៃ(បរលោក)ដែលមុខអ្នកខ្លះសភ្លឺ និងមុខអ្នកខ្លះទៀតខ្មៅងងឹត។ រីឯអ្នកដែលមុខរបស់ពួកគេខ្មៅងងឹតនោះ(មានគេសួរពួកគេថា) តើពួកអ្នកបានប្រឆាំងបន្ទាប់ពីពួកអ្នកមានជំនឿឬ? ដូច្នេះ ចូរពួកអ្នកភ្លក្សរសជាតិទារុណកម្មដោយសារតែការ

ប្រឆាំងរបស់ពួកអ្នកចុះ ។

១០៧-ចំណែកឯបណ្តាអ្នកដែលមុខរបស់ពួកគេសភ្លឺនោះ គឺពួកគេស្ថិតនៅក្នុងការអាណិតស្រឡាញ់របស់អល់ឡោះ( ឋានសួគ៌) ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។

១០៨-ទាំងនេះគឺជាអាយ៉ាត់ៗរបស់អល់ឡោះដែលយើងសូត្រវាប្រាប់អ្នក( មូហាំម៉ាត់) ដោយពិតប្រាកដ ។ ហើយអល់ឡោះគ្មានបំណងបំពានចំពោះពិភពទាំងអស់ឡើយ ។

១០៩-ហើយអ្វីដែលមាននៅលើមេឃជាច្រើនជាន់និងអ្វីដែលមាននៅលើផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ហើយកិច្ចការទាំងអស់នឹងត្រូវវិលត្រឡប់ទៅរកអល់ឡោះវិញ ។

១១០-ពួកអ្នក( ប្រជាជាតិរបស់មូហាំម៉ាត់) គឺជាប្រជាជាតិដ៏ល្អប្រពៃបំផុតដែលត្រូវបានគេបង្កើតឡើងសម្រាប់មនុស្សលោក ដោយពួកអ្នកប្រើគ្នាឱ្យធ្វើអំពើល្អ និងហាមឃាត់គ្នាអំពីអំពើអាក្រក់ ព្រមទាំងពួកអ្នកមានជំនឿលើអល់ឡោះ ។ ប្រសិនបើពួកអះលីគីតាបមានជំនឿ( លើមូហាំម៉ាត់) នោះ វាគឺជាការប្រសើរបំផុតសម្រាប់ពួកគេ ។ ពួកគេមួយចំនួនជាអ្នកមានជំនឿ តែពួកគេភាគច្រើនជាពួកដែលមិនគោរពតាមបទបញ្ជារបស់អល់ឡោះឡើយ ។

១១១-ពួកគេមិនអាចបង្កគ្រោះថ្នាក់ដល់ពួកអ្នកបានឡើយ លើកលែងតែភាពស្អុតស្អាញបន្តិចបន្តួចប៉ុណ្ណោះ ។ ហើយប្រសិនបើពួកគេធ្វើសង្គ្រាមប្រឆាំងនឹងពួកអ្នក គឺពួកគេនឹងបែរខ្នងដាក់ពួកអ្នក( ចុះចាញ់) ក្រោយមកពួកគេមិនត្រូវបានគេជួយឡើយ ។

១១២-ភាពអាម៉ាស់បានកើតមានចំពោះពួកគេ ទោះបីជាពួកគេនៅទីណាក៏ដោយ លើកលែងតែពួកដែលមានកិច្ចព្រមព្រៀងជាមួយអល់ឡោះ និងជាមួយអ្នកអ៊ីស្លាមប៉ុណ្ណោះ ។ ហើយពួកគេបានត្រឡប់មកវិញដោយមានការខឹងសម្បាពីអល់ឡោះ ហើយពួកគេត្រូវបានទទួលរងនូវភាពក្រខ្សត់ ។ នោះគឺដោយសារតែពួកគេបានប្រឆាំងនឹងបណ្តាភស្តុតាងរបស់អល់ឡោះ និងបានសម្លាប់ណាពីជាច្រើនដោយអយុត្តិធម៌ ។ នោះគឺដោយសារតែអ្វីដែលពួកគេបាន

وَأَمَّا ٱلَّذِينَ ٱبۡيَضَّتۡ وُجُوهُهُمۡ فَفِي رَحۡمَةِ ٱللَّهِۖ
هُمۡ فِيهَا خَٰلِدُونَ ﴿١٠٧﴾

تِلۡكَ ءَايَٰتُ ٱللَّهِ نَتۡلُوهَا عَلَيۡكَ بِٱلۡحَقِّۗ وَمَا
ٱللَّهُ يُرِيدُ ظُلۡمٗا لِّلۡعَٰلَمِينَ ﴿١٠٨﴾

وَلِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۚ وَإِلَى
ٱللَّهِ تُرۡجَعُ ٱلۡأُمُورُ ﴿١٠٩﴾

كُنتُمۡ خَيۡرَ أُمَّةٍ أُخۡرِجَتۡ لِلنَّاسِ تَأۡمُرُونَ
بِٱلۡمَعۡرُوفِ وَتَنۡهَوۡنَ عَنِ ٱلۡمُنكَرِ
وَتُؤۡمِنُونَ بِٱللَّهِۗ وَلَوۡ ءَامَنَ أَهۡلُ ٱلۡكِتَٰبِ
لَكَانَ خَيۡرٗا لَّهُمۚ مِّنۡهُمُ ٱلۡمُؤۡمِنُونَ
وَأَكۡثَرُهُمُ ٱلۡفَٰسِقُونَ ﴿١١٠﴾

لَن يَضُرُّوكُمۡ إِلَّآ أَذٗىۖ وَإِن يُقَٰتِلُوكُمۡ
يُوَلُّوكُمُ ٱلۡأَدۡبَارَ ثُمَّ لَا يُنصَرُونَ ﴿١١١﴾

ضُرِبَتۡ عَلَيۡهِمُ ٱلذِّلَّةُ أَيۡنَ مَا ثُقِفُوٓاْ إِلَّا بِحَبۡلٖ
مِّنَ ٱللَّهِ وَحَبۡلٖ مِّنَ ٱلنَّاسِ وَبَآءُو بِغَضَبٖ
مِّنَ ٱللَّهِ وَضُرِبَتۡ عَلَيۡهِمُ ٱلۡمَسۡكَنَةُۚ ذَٰلِكَ
بِأَنَّهُمۡ كَانُواْ يَكۡفُرُونَ بِـَٔايَٰتِ ٱللَّهِ وَيَقۡتُلُونَ
ٱلۡأَنۢبِيَآءَ بِغَيۡرِ حَقّٖۚ ذَٰلِكَ بِمَا عَصَواْ وَّكَانُواْ

ប្រព្រឹត្តបទល្មើស និងបានបំពានលើបទបញ្ជារបស់យើង។

១១៣-ពួកគេមិនដូចគ្នាទាំងអស់ទេ។ ក្នុងចំណោមពួកអះលីគីតាបមានក្រុមមួយដែលអនុវត្តប្រការត្រឹមត្រូវដែលពួកគេសូត្រអាយ៉ាត់ៗរបស់អល់ឡោះរាល់ៗយប់ដោយពួកគេស៊ូជូត(ចំពោះអល់ឡោះ)។

១១៤-ពួកគេមានជំនឿលើអល់ឡោះ និងថ្ងៃបរលោក ដោយពួកគេប្រើគ្នាឱ្យធ្វើប្រការដែលត្រឹមត្រូវ(តាមច្បាប់អ៊ីស្លាម) និងហាមឃាត់គ្នាអំពីប្រការអាក្រក់ ព្រមទាំងប្រញាប់ប្រញាល់ក្នុងការធ្វើអំពើល្អ។ អ្នកទាំងនោះស្ថិតនៅក្នុងចំណោមមនុស្សល្អត្រឹមត្រូវ។

១១៥-ហើយអ្វីដែលពួកគេធ្វើនូវប្រការល្អនោះ(ទោះតិច ឬច្រើន)គឺពួកគេមិនត្រូវគេបដិសេធនឹងវាឡើយ។ ហើយអល់ឡោះមហាដឹងចំពោះអ្នកដែលកោតខ្លាចទ្រង់។

១១៦-ពិតប្រាកដណាស់ ពួកដែលប្រឆាំងទាំងនោះ ទ្រព្យសម្បត្តិរបស់ពួកគេ និងកូនចៅរបស់ពួកគេពុំអាចការពារពួកគេពី(ទារុណកម្ម)អល់ឡោះបានសោះឡើយ។ ហើយពួកទាំងនោះគឺជាពួកនរក ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។

១១៧-ការប្រៀបធៀបនូវអ្វីដែលពួកគេ(អ្នកដែលគ្មានជំនឿ)បានបរិច្ចាគនៅក្នុងជីវិតលោកិយនេះហាក់ដូចជាខ្យល់ដែលមានភាពត្រជាក់ខ្លាំងបក់មកប៉ះនឹងដំណាំរបស់ក្រុមមួយដែលបានបំពានលើខ្លួនឯង ហើយខ្យល់នោះក៏បានបំផ្លាញវា។ អល់ឡោះមិនបានបំពានលើពួកគេឡើយ តែពួកគេទេដែលបំពានលើខ្លួនឯងនោះ។

១១៨-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំបង្កើតសម្ព័ន្ធ-មិត្តជាមួយអ្នកផ្សេងពីក្រុមរបស់ពួកអ្នកឱ្យសោះ ពីព្រោះពួកគេមិនបោះបង់ការធ្វើអាក្រក់ចំពោះពួកអ្នកឡើយ។ ពួកគេមានបំណងបង្កផលលំបាកដល់ពួកអ្នក។ ជាការពិតណាស់ ពួកគេបានស្តែងចេញនូវភាពស្អប់ខ្ពើមពីមាត់របស់ពួកគេ តែអ្វីដែលចិត្តរបស់ពួកគេ

يَعۡتَدُونَ ١١٢

۞ لَيۡسُواْ سَوَآءٗۗ مِّنۡ أَهۡلِ ٱلۡكِتَٰبِ أُمَّةٞ قَآئِمَةٞ
يَتۡلُونَ ءَايَٰتِ ٱللَّهِ ءَانَآءَ ٱلَّيۡلِ
وَهُمۡ يَسۡجُدُونَ ١١٣

يُؤۡمِنُونَ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِ وَيَأۡمُرُونَ
بِٱلۡمَعۡرُوفِ وَيَنۡهَوۡنَ عَنِ ٱلۡمُنكَرِ
وَيُسَٰرِعُونَ فِي ٱلۡخَيۡرَٰتِۖ وَأُوْلَٰٓئِكَ
مِنَ ٱلصَّٰلِحِينَ ١١٤

وَمَا يَفۡعَلُواْ مِنۡ خَيۡرٖ فَلَن يُكۡفَرُوهُۗ وَٱللَّهُ
عَلِيمُۢ بِٱلۡمُتَّقِينَ ١١٥

إِنَّ ٱلَّذِينَ كَفَرُواْ لَن تُغۡنِيَ عَنۡهُمۡ أَمۡوَٰلُهُمۡ
وَلَآ أَوۡلَٰدُهُم مِّنَ ٱللَّهِ شَيۡـٔٗاۖ وَأُوْلَٰٓئِكَ أَصۡحَٰبُ
ٱلنَّارِۚ هُمۡ فِيهَا خَٰلِدُونَ ١١٦

مَثَلُ مَا يُنفِقُونَ فِي هَٰذِهِ ٱلۡحَيَوٰةِ ٱلدُّنۡيَا
كَمَثَلِ رِيحٖ فِيهَا صِرٌّ أَصَابَتۡ حَرۡثَ قَوۡمٖ
ظَلَمُوٓاْ أَنفُسَهُمۡ فَأَهۡلَكَتۡهُۚ وَمَا ظَلَمَهُمُ ٱللَّهُ
وَلَٰكِنۡ أَنفُسَهُمۡ يَظۡلِمُونَ ١١٧
يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَتَّخِذُواْ بِطَانَةٗ مِّن
دُونِكُمۡ لَا يَأۡلُونَكُمۡ خَبَالٗا وَدُّواْ مَا عَنِتُّمۡ قَدۡ
بَدَتِ ٱلۡبَغۡضَآءُ مِنۡ أَفۡوَٰهِهِمۡ وَمَا تُخۡفِي
صُدُورُهُمۡ أَكۡبَرُۚ قَدۡ بَيَّنَّا لَكُمُ ٱلۡأٓيَٰتِۖ إِن

كُنتُمۡ تَعۡقِلُونَ ١١٨

លាក់បាំងនោះ គឺមានភាពធំធេងជាងនេះទៅទៀត។ ពិតប្រាកដណាស់ យើងបានបញ្ជាក់យ៉ាងច្បាស់ចំពោះពួកអ្នកនូវភស្តុតាងជាច្រើន ប្រសិនបើពួកអ្នកពិចារណា។

هَٰٓأَنتُمۡ أُوْلَآءِ تُحِبُّونَهُمۡ وَلَا يُحِبُّونَكُمۡ وَتُؤۡمِنُونَ
بِٱلۡكِتَٰبِ كُلِّهِۦ وَإِذَا لَقُوكُمۡ قَالُوٓاْ ءَامَنَّا وَإِذَا
خَلَوۡاْ عَضُّواْ عَلَيۡكُمُ ٱلۡأَنَامِلَ مِنَ ٱلۡغَيۡظِۚ
قُلۡ مُوتُواْ بِغَيۡظِكُمۡۗ إِنَّ ٱللَّهَ عَلِيمُۢ بِذَاتِ
ٱلصُّدُورِ ١١٩

១១៩-ពួកអ្នកជាអ្នកដែលស្រឡាញ់ពួកគេ តែពួកគេមិនស្រឡាញ់ពួកអ្នកឡើយ ខណៈដែលពួកអ្នកជឿនឹងគម្ពីរទាំងអស់។ នៅពេលពួកគេបានជួបពួកអ្នកពួកគេបាននិយាយថាៈ ពួកយើងបានជឿហើយ តែនៅពេលពួកគេនៅឆ្ងាយ(ពីពួកអ្នក) ពួកគេបានខាំចុងម្រាមដៃរបស់ពួកគេ ដោយមានកំហឹងចំពោះពួកអ្នក។ ចូរអ្នក(មូហាំម៉ាត់) ពោលទៅកាន់ពួកគេថាៈ ចូរពួកអ្នកស្លាប់ដោយកំហឹងរបស់ពួកអ្នកចុះ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹងនូវអ្វីដែលមាននៅក្នុងចិត្ត។

إِن تَمۡسَسۡكُمۡ حَسَنَةٞ تَسُؤۡهُمۡ وَإِن تُصِبۡكُمۡ
سَيِّئَةٞ يَفۡرَحُواْ بِهَاۖ وَإِن تَصۡبِرُواْ وَتَتَّقُواْ لَا
يَضُرُّكُمۡ كَيۡدُهُمۡ شَيۡـًٔاۗ إِنَّ ٱللَّهَ بِمَا
يَعۡمَلُونَ مُحِيطٞ ١٢٠

១២០-ប្រសិនបើផលល្អកើតមានចំពោះពួកអ្នក វាប្រាកដជាធ្វើឱ្យពួកគេមានទុក្ខព្រួយ ហើយប្រសិនបើផលអាក្រក់កើតមានចំពោះពួកអ្នក ប្រាកដជាពួកគេរីករាយនឹងវាជាមិនខាន។ តែបើពួកអ្នកអត់ធ្មត់(ចំពោះអ្វីដែលកើតមានដល់ពួកអ្នក) និងកោតខ្លាចអល់ឡោះនោះ គឺឧបាយកលរបស់ពួកគេមិនអាចបង្កគ្រោះថ្នាក់ដល់ពួកអ្នកបានឡើយ។ ពិតប្រាកដណាស់អល់ឡោះដឹងជ្រួតជ្រាបបំផុតនូវអ្វីដែលពួកគេប្រព្រឹត្ត។

وَإِذۡ غَدَوۡتَ مِنۡ أَهۡلِكَ تُبَوِّئُ ٱلۡمُؤۡمِنِينَ
مَقَٰعِدَ لِلۡقِتَالِۗ وَٱللَّهُ سَمِيعٌ عَلِيمٌ ١٢١

១២១-ហើយ(ចូរចងចាំ)នៅពេលដែលអ្នកបានចាកចេញពីលំនៅដ្ឋានរបស់អ្នកនាពេលព្រឹកដើម្បីរៀបចំដាក់អ្នកមានជំនឿទៅតាមទីតាំងសម្រាប់ធ្វើសង្គ្រាម។ ហើយអល់ឡោះមហាឮមហាដឹង។

إِذۡ هَمَّت طَّآئِفَتَانِ مِنكُمۡ أَن تَفۡشَلَا وَٱللَّهُ
وَلِيُّهُمَاۗ وَعَلَى ٱللَّهِ فَلۡيَتَوَكَّلِ ٱلۡمُؤۡمِنُونَ ١٢٢

១២២-នៅពេលដែលមានពីរក្រុម[1] ក្នុងចំណោមពួកអ្នកបានបាត់បង់ទឹកចិត្ត(ក្នុងការប្រយុទ្ធ)ខណៈដែលអល់ឡោះជាអ្នកគាំពារពួកគេទាំងពីរក្រុម។ ដូច្នេះ ចូរឱ្យបណ្តាអ្នកដែលមានជំនឿប្រគល់ការទុកចិត្តលើអល់ឡោះចុះ។

[1]-ពីរក្រុមនោះ គឺជាពួកពុតត្បុតដែលមកពីអំបូរសាឡាម៉ះ និងអំបូរហារីសះ។

១២៣-ពិតប្រាកដណាស់អល់ឡោះបានជួយពួកអ្នកនៅសមរភូមិហ្ពាទើរ ខណៈដែលពួកអ្នកមានភាពទន់ខ្សោយ( ដោយមានគ្នាតិច) ។ ដូច្នេះចូរពួកអ្នកកោតខ្លាចអល់ឡោះ សង្ឃឹមថាពួកអ្នកនឹងដឹងគុណ ។

១២៤-ចូរ( ចងចាំ) នៅពេលដែលអ្នកពោលទៅកាន់បណ្តាអ្នកដែលមានជំនឿថាៈ តើមិនទាន់គ្រប់គ្រាន់សម្រាប់ពួកអ្នកទៀតឬ ដែលម្ចាស់របស់ពួកអ្នកបន្ថែម( ទ័ព) ឱ្យពួកអ្នកនូវម៉ាឡាអ៊ីកាត់ចំនួនបីពាន់នាក់ដែលត្រូវបានគេបញ្ជូនមកនោះ?

១២៥-មិនដូច្នោះទេ! ប្រសិនបើពួកអ្នកអត់ធ្មត់ និងកោតខ្លាចអល់ឡោះ ហើយបើសិនជាពួកសត្រូវបានមកដល់ពួកអ្នកយ៉ាងឆាប់រហ័សនោះ ប្រាកដជាម្ចាស់របស់ពួកអ្នកនឹងបន្ថែមឱ្យពួកអ្នកនូវម៉ាឡាអ៊ីកាត់ចំនួនប្រាំពាន់នាក់ដែលមានសញ្ញាសំគាល់យ៉ាងច្បាស់ ។

១២៦-អល់ឡោះមិនធ្វើប្រការទាំងនេះក្រៅពីដើម្បីផ្តល់ដំណឹងល្អដល់ពួកអ្នក និងដើម្បីឱ្យចិត្តរបស់ពួកអ្នកមានភាពនឹងនរនឹងវាឡើយ ។ ហើយគ្មានជោគជ័យទេ លើកលែងតែមានជំនួយមកពីអល់ឡោះដែលមហាខ្លាំងពូកែ មហាគតិបណ្ឌិតប៉ុណ្ណោះ ។

១២៧-ដើម្បីទ្រង់នឹងបំបែកក្រុមមួយក្នុងចំណោមពួកដែលប្រឆាំង ឬធ្វើឱ្យពួកគេជួបប្រទះនូវភាពអាម៉ាស់ ពេលនោះពួកគេនឹងដកថយវិញដោយបរាជ័យជាមិនខាន ។

១២៨-ពុំមែនជាភារកិច្ចរបស់អ្នក( មូហាំម៉ាត់) ទេនៅក្នុងកិច្ចការនេះ( តែវាជាសិទ្ធិរបស់អល់ឡោះក្នុងការបំបែកពួកគេ) ឬទ្រង់ត្រូវអភ័យទោសដល់ពួកគេឬដាក់ទារុណកម្មពួកគេ ព្រោះពួកគេគឺពិតជាពួកបំពាន ។

១២៩-ហើយអ្វីៗដែលមាននៅលើមេឃជាច្រើនជាន់និងផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ទ្រង់នឹងអភ័យទោសចំពោះអ្នកណាដែលទ្រង់មានចេតនា និងធ្វើទារុណកម្មចំពោះអ្នកណាដែលទ្រង់មានចេតនា ។ ហើយអល់ឡោះ មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَلَقَدۡ نَصَرَكُمُ ٱللَّهُ بِبَدۡرٖ وَأَنتُمۡ أَذِلَّةٞۖ فَٱتَّقُواْ ٱللَّهَ لَعَلَّكُمۡ تَشۡكُرُونَ ﴿١٢٣﴾

إِذۡ تَقُولُ لِلۡمُؤۡمِنِينَ أَلَن يَكۡفِيَكُمۡ أَن يُمِدَّكُمۡ رَبُّكُم بِثَلَٰثَةِ ءَالَٰفٖ مِّنَ ٱلۡمَلَٰٓئِكَةِ مُنزَلِينَ ﴿١٢٤﴾

بَلَىٰٓۚ إِن تَصۡبِرُواْ وَتَتَّقُواْ وَيَأۡتُوكُم مِّن فَوۡرِهِمۡ هَٰذَا يُمۡدِدۡكُمۡ رَبُّكُم بِخَمۡسَةِ ءَالَٰفٖ مِّنَ ٱلۡمَلَٰٓئِكَةِ مُسَوِّمِينَ ﴿١٢٥﴾

وَمَا جَعَلَهُ ٱللَّهُ إِلَّا بُشۡرَىٰ لَكُمۡ وَلِتَطۡمَئِنَّ قُلُوبُكُم بِهِۦۗ وَمَا ٱلنَّصۡرُ إِلَّا مِنۡ عِندِ ٱللَّهِ ٱلۡعَزِيزِ ٱلۡحَكِيمِ ﴿١٢٦﴾

لِيَقۡطَعَ طَرَفٗا مِّنَ ٱلَّذِينَ كَفَرُوٓاْ أَوۡ يَكۡبِتَهُمۡ فَيَنقَلِبُواْ خَآئِبِينَ ﴿١٢٧﴾

لَيۡسَ لَكَ مِنَ ٱلۡأَمۡرِ شَيۡءٌ أَوۡ يَتُوبَ عَلَيۡهِمۡ أَوۡ يُعَذِّبَهُمۡ فَإِنَّهُمۡ ظَٰلِمُونَ ﴿١٢٨﴾

وَلِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۚ يَغۡفِرُ لِمَن يَشَآءُ وَيُعَذِّبُ مَن يَشَآءُۚ وَٱللَّهُ غَفُورٞ رَّحِيمٞ ﴿١٢٩﴾

| | |
|---|---|
| ១៣០-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំស៊ីការប្រាក់ដែលនាំឱ្យមានការកើនឡើងទ្វេដងឬច្រើនជាងនេះ ។ ហើយចូរពួកអ្នកកោតខ្លាចចំពោះអល់ឡោះ ដើម្បីឱ្យពួកអ្នកទទួលបានជោគជ័យ ។ | يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَأْكُلُواْ ٱلرِّبَوٰٓاْ أَضْعَـٰفًا مُّضَـٰعَفَةً ۖ وَٱتَّقُواْ ٱللَّهَ لَعَلَّكُمْ تُفْلِحُونَ ١٣٠ |
| ១៣១-ហើយចូរពួកអ្នកខ្លាចភ្លើងនរកដែលត្រូវបានគេរៀបចំសម្រាប់ពួកដែលប្រឆាំង ។ | وَٱتَّقُواْ ٱلنَّارَ ٱلَّتِىٓ أُعِدَّتْ لِلْكَـٰفِرِينَ ١٣١ |
| ១៣២-ហើយចូរពួកអ្នកប្រតិបត្តិតាមអល់ឡោះនិងអ្នកនាំសារ ( មូហាំម៉ាត់ ) ដើម្បីឱ្យពួកអ្នកទទួលបានការអាណិតស្រឡាញ់ ។ | وَأَطِيعُواْ ٱللَّهَ وَٱلرَّسُولَ لَعَلَّكُمْ تُرْحَمُونَ ١٣٢ |
| ១៣៣-ហើយចូរពួកអ្នកប្រញាប់ប្រញាល់ទៅរកការអភ័យទោសពីម្ចាស់របស់ពួកអ្នក និងទៅរកឋានសួគ៌ដែលផ្ទៃរបស់វាដូចផ្ទៃមេឃជាច្រើនជាន់និងផែនដីដែលគេបានរៀបចំវាសម្រាប់បណ្តាអ្នកដែលកោតខ្លាច ។ | ۞ وَسَارِعُوٓاْ إِلَىٰ مَغْفِرَةٍ مِّن رَّبِّكُمْ وَجَنَّةٍ عَرْضُهَا ٱلسَّمَـٰوَٰتُ وَٱلْأَرْضُ أُعِدَّتْ لِلْمُتَّقِينَ ١٣٣ |
| ១៣៤-គឺបណ្តាអ្នកដែលបរិច្ចាគ( ទ្រព្យសម្បត្តិ) ទាំងនៅពេលធូរធារ និងពេលក្រខ្សត់ និងបណ្តាអ្នកដែលមានភាពអត់ធ្មត់ចំពោះកំហឹង ហើយនិងបណ្តាអ្នកដែលមានការអធ្យាស្រ័យដល់មនុស្សលោក ។ ហើយអល់ឡោះស្រឡាញ់បណ្តាអ្នកដែលធ្វើល្អ ។ | ٱلَّذِينَ يُنفِقُونَ فِى ٱلسَّرَّآءِ وَٱلضَّرَّآءِ وَٱلْكَـٰظِمِينَ ٱلْغَيْظَ وَٱلْعَافِينَ عَنِ ٱلنَّاسِ ۗ وَٱللَّهُ يُحِبُّ ٱلْمُحْسِنِينَ ١٣٤ |
| ១៣៥-និងពួកដែលនៅពេលដែលពួកគេធ្វើអំពើអាក្រក់អ្វីមួយ ឬពួកគេបំពានលើខ្លួនឯង គឺពួកគេនឹកឃើញអល់ឡោះ ហើយពួកគេសុំអភ័យទោសនូវរាល់ទោសកំហុសរបស់ពួកគេ ។ ហើយគ្មាន អ្នកណាដែលអភ័យទោសនូវរាល់កំហុសទាំងអស់ក្រៅពីអល់ឡោះឡើយ ។ ហើយពួកគេមិនរឹងរូសចំពោះអ្វីដែលពួកគេបានប្រព្រឹត្តនោះទេ ខណៈដែលពួកគេដឹងហើយនោះ ។ | وَٱلَّذِينَ إِذَا فَعَلُواْ فَـٰحِشَةً أَوْ ظَلَمُوٓاْ أَنفُسَهُمْ ذَكَرُواْ ٱللَّهَ فَٱسْتَغْفَرُواْ لِذُنُوبِهِمْ وَمَن يَغْفِرُ ٱلذُّنُوبَ إِلَّا ٱللَّهُ وَلَمْ يُصِرُّواْ عَلَىٰ مَا فَعَلُواْ وَهُمْ يَعْلَمُونَ ١٣٥ |
| ១៣៦-ពួកទាំងនោះ ការតបស្នងរបស់ពួកគេគឺការអភ័យទោសពីម្ចាស់របស់ពួកគេ និងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។ ទាំងនេះគឺជាការតបស្នងដ៏ល្អប្រពៃសម្រាប់បណ្តាអ្នកដែលធ្វើល្អ ។ | أُوْلَـٰٓئِكَ جَزَآؤُهُم مَّغْفِرَةٌ مِّن رَّبِّهِمْ وَجَنَّـٰتٌ تَجْرِى مِن تَحْتِهَا ٱلْأَنْهَـٰرُ خَـٰلِدِينَ فِيهَا ۚ وَنِعْمَ أَجْرُ ٱلْعَـٰمِلِينَ ١٣٦ |
| ១៣៧-ពិតប្រាកដណាស់ ព្រឹត្តិការណ៍ជាច្រើនបានកន្លងផុត | قَدْ خَلَتْ مِن قَبْلِكُمْ سُنَنٌ فَسِيرُواْ فِى ٱلْأَرْضِ |

فَٱنظُرُواْ كَيۡفَ كَانَ عَٰقِبَةُ ٱلۡمُكَذِّبِينَ ١٣٧

មុនពួកអ្នករួចទៅហើយ ។ ដូច្នេះ ចូរពួកអ្នកធ្វើដំណើរនៅលើផែនដី ហើយគិតពិចារណាថា: តើលទ្ធផលចុងក្រោយរបស់ពួកដែលបដិសេធនោះយ៉ាងដូចម្ដេច ?

هَٰذَا بَيَانٞ لِّلنَّاسِ وَهُدٗى وَمَوۡعِظَةٞ لِّلۡمُتَّقِينَ ١٣٨

១៣៨-នេះ(គម្ពីរគួរអាន) គឺជាការបញ្ជាក់យ៉ាងច្បាស់ដល់មនុស្សលោក ហើយជាការចង្អុលបង្ហាញ និងជាដំបូន្មានសម្រាប់បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ ។

وَلَا تَهِنُواْ وَلَا تَحۡزَنُواْ وَأَنتُمُ ٱلۡأَعۡلَوۡنَ إِن كُنتُم مُّؤۡمِنِينَ ١٣٩

១៣៩-ហើយចូរពួកអ្នកកុំទន់ខ្សោយ និងកុំកើតទុក្ខព្រួយដោយពួកអ្នកជាអ្នកខ្ពង់ខ្ពស់ ប្រសិនបើពួកអ្នកជាអ្នកមានជំនឿ ។

إِن يَمۡسَسۡكُمۡ قَرۡحٞ فَقَدۡ مَسَّ ٱلۡقَوۡمَ قَرۡحٞ مِّثۡلُهُۥۚ وَتِلۡكَ ٱلۡأَيَّامُ نُدَاوِلُهَا بَيۡنَ ٱلنَّاسِ وَلِيَعۡلَمَ ٱللَّهُ ٱلَّذِينَ ءَامَنُواْ وَيَتَّخِذَ مِنكُمۡ شُهَدَآءَۗ وَٱللَّهُ لَا يُحِبُّ ٱلظَّٰلِمِينَ ١٤٠

១៤០-ប្រសិនបើពួកអ្នករងរបួស(នៅសមរភូមិអ៊ូហុទ)គឺក្រុមនោះ(សត្រូវ)ក៏រងរបួស(នៅសមរភូមិហ្ពាទើរ)ដូចគ្នាដែរ ។ នៅថ្ងៃទាំងនោះគឺយើងផ្លាស់ប្ដូរវារវាងមនុស្សលោក(ម្ដងទទួលជោគជ័យ ម្ដងទទួលបរាជ័យ) និងដើម្បីអល់ឡោះវែកញែកចំពោះអ្នកដែលមានជំនឿពិត និងដើម្បីយកក្នុងចំណោមពួកអ្នកជាអ្នកដែលស្លាប់ស្ហាហ៊ិត(ស្លាប់ក្នុងសមរភូមិ) ។ ហើយអល់ឡោះមិនស្រឡាញ់ពួកដែលបំពានឡើយ ។

وَلِيُمَحِّصَ ٱللَّهُ ٱلَّذِينَ ءَامَنُواْ وَيَمۡحَقَ ٱلۡكَٰفِرِينَ ١٤١

១៤១-និងដើម្បីអល់ឡោះសំអាតបណ្ដាអ្នកដែលមានជំនឿ(អំពីបាបកម្ម)និងបំផ្លាញពួកដែលប្រឆាំង ។

أَمۡ حَسِبۡتُمۡ أَن تَدۡخُلُواْ ٱلۡجَنَّةَ وَلَمَّا يَعۡلَمِ ٱللَّهُ ٱلَّذِينَ جَٰهَدُواْ مِنكُمۡ وَيَعۡلَمَ ٱلصَّٰبِرِينَ ١٤٢

១៤២-តើពួកអ្នកនឹកស្មានថា: ពួកអ្នកនឹងចូលឋានសួគ៌ឬខណៈដែលអល់ឡោះមិនទាន់វែកញែកច្បាស់លាស់អ្នកដែលបានតស៊ូក្នុងចំណោមពួកអ្នក និងមិនទាន់វែកញែកច្បាស់លាស់អ្នកដែលអត់ធ្មត់នៅឡើយនោះ?

وَلَقَدۡ كُنتُمۡ تَمَنَّوۡنَ ٱلۡمَوۡتَ مِن قَبۡلِ أَن تَلۡقَوۡهُ فَقَدۡ رَأَيۡتُمُوهُ وَأَنتُمۡ تَنظُرُونَ ١٤٣

១៤៣-ពិតប្រាកដណាស់ ពួកអ្នកធ្លាប់បានប្រាថ្នាចង់បានសេចក្ដីស្លាប់(ស្លាប់ក្នុងសមរភូមិ)មុននឹងពួកអ្នកប្រឈមនឹងវា ។ ពេលនេះពួកអ្នកពិតជាបានឃើញវាហើយ ខណៈដែលពួកអ្នកកំពុងតែមើលវានោះ ។

وَمَا مُحَمَّدٌ إِلَّا رَسُولٞ قَدۡ خَلَتۡ مِن قَبۡلِهِ

១៤៤-មូហាំម៉ាត់គ្រាន់តែជាអ្នកនាំសារម្នាក់ដែលអ្នកនាំសារជាច្រើនបានកន្លងផុតទៅមុនគាត់ប៉ុណ្ណោះ ។ ប្រសិនបើគាត់ទទួល

មរណភាព ឬត្រូវបានគេសម្លាប់ តើពួកអ្នកនឹងវិលត្រឡប់ទៅក្រោយ( សាសនាដើម)វិញឬ? បើអ្នកណាវិលត្រឡប់ទៅក្រោយវិញនោះ គឺវាមិនប៉ះពាល់អ្វីដល់អល់ឡោះបន្តិចណាឡើយ ។ ហើយអល់ឡោះនឹងតបស្នងដល់បណ្តាអ្នកដែលដឹងគុណ ។

១៤៥-គ្មានបុគ្គលណាម្នាក់អាចស្លាប់បានទេ លើកលែងតែមានការអនុញ្ញាតពីអល់ឡោះដែលបានកំណត់ពេលរួចជាស្រេច ។ បុគ្គលណាចង់បានផលនៅក្នុងលោកិយ យើងនឹងប្រទានឱ្យគេនូវផលនោះ ហើយបើបុគ្គលណាចង់បានផលនៅថ្ងៃបរលោក យើងនឹងប្រទានឱ្យគេនូវផលទាំងនោះ ។ ហើយយើងនឹងតបស្នងដល់បណ្តាអ្នកដែលដឹងគុណ ។

១៤៦-ហើយមានបណ្តាណាពីដែលអ្នកដើរតាមពួកគាត់ជាច្រើនបានធ្វើសង្គ្រាមតស៊ូ( ក្នុងមាគ៌ាអល់ឡោះ) រួមជាមួយពួកគាត់ ហើយពួកគេមិនបាក់ទឹកចិត្តនូវអ្វីដែលបានកើតឡើងចំពោះពួកគេក្នុងមាគ៌ារបស់អល់ឡោះឡើយ ហើយពួកគេមិនទន់ខ្សោយ និងមិនចុះចាញ់ឡើយ ។ អល់ឡោះស្រឡាញ់បណ្តាអ្នកដែលអត់ធ្មត់ ។

១៤៧-ហើយពាក្យសំដីរបស់ពួកគេ( អ្នកអត់ធ្មត់) គ្មានអ្វីក្រៅពីការបួងសួងសុំថាៈ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាអភ័យទោសដល់ពួកយើងនូវរាល់បាបកម្មរបស់ពួកយើងនិងការជ្រុលជ្រួសក្នុងកិច្ចការរបស់ពួកយើងផង ហើយសូមទ្រង់មេត្តាពង្រឹងគោលជំហររបស់ពួកយើង និងជួយពួកយើងឱ្យមានជ័យជំនះលើក្រុមដែលប្រឆាំងផង ។

១៤៨-ដូច្នេះ អល់ឡោះបានប្រទានឱ្យពួកគេ( ពួកអត់ធ្មត់) នូវផលបុណ្យក្នុងលោកិយ និងផលបុណ្យដ៏ល្អប្រពៃនៅថ្ងៃបរលោក ។ អល់ឡោះស្រឡាញ់បណ្តាអ្នកដែលធ្វើល្អ ។

១៤៩-ឱបណ្តាអ្នកដែលមានជំនឿ ប្រសិនបើពួកអ្នកប្រតិបត្តិតាមពួកដែលប្រឆាំងនោះ ពួកគេនឹងធ្វើឱ្យពួកអ្នកត្រឡប់ទៅក្រោយវិញ( សាសនាដើម) ពេលនោះពួកអ្នកត្រឡប់ទៅវិញដោយការខាតបង់ ។

ٱلرُّسُلُۚ أَفَإِيْن مَّاتَ أَوْ قُتِلَ ٱنقَلَبْتُمْ عَلَىٰٓ
أَعْقَـٰبِكُمْۚ وَمَن يَنقَلِبْ عَلَىٰ عَقِبَيْهِ فَلَن يَضُرَّ
ٱللَّهَ شَيْـًٔاۗ وَسَيَجْزِى ٱللَّهُ ٱلشَّـٰكِرِينَ ﴿١٤٤﴾

وَمَا كَانَ لِنَفْسٍ أَن تَمُوتَ إِلَّا بِإِذْنِ ٱللَّهِ
كِتَـٰبًا مُّؤَجَّلًاۗ وَمَن يُرِدْ ثَوَابَ ٱلدُّنْيَا
نُؤْتِهِۦ مِنْهَا وَمَن يُرِدْ ثَوَابَ ٱلْـَٔاخِرَةِ نُؤْتِهِۦ
مِنْهَاۚ وَسَنَجْزِى ٱلشَّـٰكِرِينَ ﴿١٤٥﴾

وَكَأَيِّن مِّن نَّبِىٍّ قَـٰتَلَ مَعَهُۥ رِبِّيُّونَ كَثِيرٌ فَمَا
وَهَنُوا۟ لِمَآ أَصَابَهُمْ فِى سَبِيلِ ٱللَّهِ وَمَا ضَعُفُوا۟
وَمَا ٱسْتَكَانُوا۟ۗ وَٱللَّهُ يُحِبُّ ٱلصَّـٰبِرِينَ ﴿١٤٦﴾

وَمَا كَانَ قَوْلَهُمْ إِلَّآ أَن قَالُوا۟ رَبَّنَا ٱغْفِرْ لَنَا
ذُنُوبَنَا وَإِسْرَافَنَا فِىٓ أَمْرِنَا وَثَبِّتْ أَقْدَامَنَا
وَٱنصُرْنَا عَلَى ٱلْقَوْمِ ٱلْكَـٰفِرِينَ ﴿١٤٧﴾

فَـَٔاتَىٰهُمُ ٱللَّهُ ثَوَابَ ٱلدُّنْيَا وَحُسْنَ ثَوَابِ
ٱلْـَٔاخِرَةِۗ وَٱللَّهُ يُحِبُّ ٱلْمُحْسِنِينَ ﴿١٤٨﴾

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓا۟ إِن تُطِيعُوا۟ ٱلَّذِينَ
كَفَرُوا۟ يَرُدُّوكُمْ عَلَىٰٓ أَعْقَـٰبِكُمْ فَتَنقَلِبُوا۟
خَـٰسِرِينَ ﴿١٤٩﴾

بَلِ ٱللَّهُ مَوۡلَىٰكُمۡۖ وَهُوَ خَيۡرُ ٱلنَّٰصِرِينَ ١٥٠

១៥០-ពិតប្រាកដណាស់ អល់ឡោះជាអ្នកគាំពារពួកអ្នក។ ហើយទ្រង់ជាអ្នកជួយដ៏ល្អប្រសើរបំផុត។

سَنُلۡقِي فِي قُلُوبِ ٱلَّذِينَ كَفَرُواْ ٱلرُّعۡبَ بِمَآ أَشۡرَكُواْ بِٱللَّهِ مَا لَمۡ يُنَزِّلۡ بِهِۦ سُلۡطَٰنٗاۖ وَمَأۡوَىٰهُمُ ٱلنَّارُۖ وَبِئۡسَ مَثۡوَى ٱلظَّٰلِمِينَ ١٥١

១៥១-យើងនឹងបញ្ចូលការភ័យខ្លាចទៅក្នុងចិត្តពួកដែលប្រឆាំងដោយសារតែការធ្វើស្ហ៊ីរីករបស់ពួកគេចំពោះអល់ឡោះ ដោយទ្រង់មិនបានបញ្ចុះភស្តុតាងអ្វី(មកបញ្ជាក់)អំពីវាឡើយ។ កន្លែងស្នាក់នៅរបស់ពួកគេនោះគឺឋាននរក ហើយវាជាកន្លែងដ៏អាក្រក់សម្រាប់ពួកដែលបំពាន។

وَلَقَدۡ صَدَقَكُمُ ٱللَّهُ وَعۡدَهُۥٓ إِذۡ تَحُسُّونَهُم بِإِذۡنِهِۦۖ حَتَّىٰٓ إِذَا فَشِلۡتُمۡ وَتَنَٰزَعۡتُمۡ فِي ٱلۡأَمۡرِ وَعَصَيۡتُم مِّنۢ بَعۡدِ مَآ أَرَىٰكُم مَّا تُحِبُّونَۚ مِنكُم مَّن يُرِيدُ ٱلدُّنۡيَا وَمِنكُم مَّن يُرِيدُ ٱلۡأٓخِرَةَۚ ثُمَّ صَرَفَكُمۡ عَنۡهُمۡ لِيَبۡتَلِيَكُمۡۖ وَلَقَدۡ عَفَا عَنكُمۡۗ وَٱللَّهُ ذُو فَضۡلٍ عَلَى ٱلۡمُؤۡمِنِينَ ١٥٢

១៥២-ហើយពិតប្រាកដណាស់ អល់ឡោះបានបំពេញការសន្យារបស់ទ្រង់ចំពោះពួកអ្នក ខណៈដែលពួកអ្នកសម្លាប់ពួកគេ(នៅសមរភូមិអ៊ូហុទ) ដោយការអនុញ្ញាតរបស់ទ្រង់រហូតដល់ពួកអ្នកទន់ខ្សោយ និងខ្វែងយោបល់គ្នាក្នុងរឿងនេះ ហើយពួកអ្នកបានប្រឆាំង[1](នឹងអ្នកនាំសារ) បន្ទាប់ពីអល់ឡោះបានធ្វើឱ្យពួកអ្នកឃើញនូវអ្វីដែលពួកអ្នកចូលចិត្ត(ជ័យភណ្ឌ)។ ក្នុងចំណោមពួកអ្នកមានអ្នកចង់បាន(ផលប្រយោជន៍)លោកិយ ហើយមួយចំនួនទៀតក្នុងចំណោមពួកអ្នកមានអ្នកចង់បាន(ផលបុណ្យ)ថ្ងៃបរលោក។ ក្រោយមកអល់ឡោះធ្វើឱ្យពួកអ្នកបែរចេញពីពួកគេ(បរាជ័យ) ដើម្បីទ្រង់សាកល្បងពួកអ្នក។ ហើយពិតប្រាកដណាស់ ទ្រង់បានអធ្យាស្រ័យឱ្យពួកអ្នក។ ហើយអល់ឡោះមានក្តីសន្តោសប្រណីទៅចំពោះបណ្តាអ្នកដែលមានជំនឿ។

۞ إِذۡ تُصۡعِدُونَ وَلَا تَلۡوُۥنَ عَلَىٰٓ أَحَدٖ وَٱلرَّسُولُ يَدۡعُوكُمۡ فِيٓ أُخۡرَىٰكُمۡ فَأَثَٰبَكُمۡ غَمَّۢا بِغَمّٖ لِّكَيۡلَا تَحۡزَنُواْ عَلَىٰ مَا فَاتَكُمۡ وَلَا مَآ أَصَٰبَكُمۡۗ وَٱللَّهُ خَبِيرُۢ بِمَا تَعۡمَلُونَ ١٥٣

១៥៣-(ចូរចងចាំ)នៅពេលដែលពួកអ្នករត់ឡើងភ្នំ(ដោយសារចាញ់សង្គ្រាម) ដោយមិនក្រឡេកមើលនរណាម្នាក់ឡើយ ខណៈដែលអ្នកនាំសារនៅជាមួយក្រុមមួយទៀតរបស់ពួកអ្នកស្រែកហៅពួកអ្នក។ ដូច្នេះអល់ឡោះបានធ្វើឱ្យពួកអ្នកទទួលរងនូវទុក្ខសោកលើទុក្ខសោក ដើម្បីកុំឱ្យពួកអ្នកមានការសោកស្តាយនូវអ្វីដែលបានកន្លងហួសពីពួកអ្នកនិងអ្វីដែលបានធ្វើឱ្យពួកអ្នករងគ្រោះ។ អល់ឡោះមហាជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

---

១-អល់ឡោះធ្វើឱ្យអ្នកមានជំនឿទទួលបរាជ័យដោយពួកគេមិនគោរពតាមបទបញ្ជារបស់ណាពី។

ثُمَّ أَنزَلَ عَلَيۡكُم مِّنۢ بَعۡدِ ٱلۡغَمِّ أَمَنَةً نُّعَاسًا
يَغۡشَىٰ طَآئِفَةً مِّنكُمۡۖ وَطَآئِفَةٌ قَدۡ أَهَمَّتۡهُمۡ
أَنفُسُهُمۡ يَظُنُّونَ بِٱللَّهِ غَيۡرَ ٱلۡحَقِّ ظَنَّ
ٱلۡجَٰهِلِيَّةِۖ يَقُولُونَ هَل لَّنَا مِنَ ٱلۡأَمۡرِ مِن
شَيۡءٍۗ قُلۡ إِنَّ ٱلۡأَمۡرَ كُلَّهُۥ لِلَّهِۗ يُخۡفُونَ فِيٓ
أَنفُسِهِم مَّا لَا يُبۡدُونَ لَكَۖ يَقُولُونَ لَوۡ كَانَ
لَنَا مِنَ ٱلۡأَمۡرِ شَيۡءٞ مَّا قُتِلۡنَا هَٰهُنَاۗ قُل لَّوۡ
كُنتُمۡ فِي بُيُوتِكُمۡ لَبَرَزَ ٱلَّذِينَ كُتِبَ عَلَيۡهِمُ
ٱلۡقَتۡلُ إِلَىٰ مَضَاجِعِهِمۡۖ وَلِيَبۡتَلِيَ ٱللَّهُ مَا فِي
صُدُورِكُمۡ وَلِيُمَحِّصَ مَا فِي قُلُوبِكُمۡۚ وَٱللَّهُ
عَلِيمُۢ بِذَاتِ ٱلصُّدُورِ ١٥٤

១៥៤-បន្ទាប់មកអល់ឡោះបានបញ្ចុះឱ្យពួកអ្នក[១] បន្ទាប់ពីទុក្ខសោក(ដោយសារចាញ់សង្គ្រាម)នោះនូវសុខសន្តិភាពដូចជាភាពងងុយមកគ្របដណ្តប់ក្រុមមួយអំពីពួកអ្នក។ ដោយមួយក្រុមទៀតដែលយកចិត្តទុកដាក់តែចំពោះខ្លួនពួកគេប៉ុណ្ណោះ ដោយពួកគេសង្ស័យចំពោះអល់ឡោះដោយគ្មានហេតុផលដូចជាការសង្ស័យរបស់ពួកល្ងង់ខ្លៅ(សម័យកាលមុនមូហាំម៉ាត់)ដោយពួកគេនិយាយថា: តើសម្រាប់ពួកយើងមានការជ្រើសរើសដែរឬទេនៅក្នុងរឿងនេះ(ការធ្វើសង្គ្រាម)? ចូរអ្នក(មូហាំម៉ាត់)ពោលថា: ពិតប្រាកដណាស់ គ្រប់កិច្ចការទាំងអស់គឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ពួកគេលាក់បាំងក្នុងចិត្តរបស់ពួកគេនូវអ្វីដែលពួកគេមិនចង់បង្ហាញដល់អ្នកដោយពួកគេនិយាយថា: ប្រសិនបើពួកយើងមានការជ្រើសរើសនោះ ពួកយើងមិនត្រូវគេសម្លាប់នៅទីនេះទេ(សមរភូមិ)។ ចូរអ្នកពោលថា: ទោះបីជាពួកអ្នកស្ថិតនៅក្នុងផ្ទះរបស់ពួកអ្នកក៏ដោយក៏ពួកដែលគេកំណត់ឱ្យស្លាប់នោះនឹងចេញទៅរកកន្លែងស្លាប់របស់ពួកគេដែរ។ (ការធ្វើដូច្នេះ)គឺដើម្បីអល់ឡោះសាកល្បងនូវអ្វីដែលមាននៅក្នុងចិត្តរបស់ពួកអ្នក និងដើម្បីសំអាតនូវអ្វីដែលមាននៅក្នុងចិត្តរបស់ពួកអ្នក។ ហើយអល់ឡោះមហាដឹងនូវអ្វីដែលមាននៅក្នុងចិត្ត។

إِنَّ ٱلَّذِينَ تَوَلَّوۡاْ مِنكُمۡ يَوۡمَ ٱلۡتَقَى ٱلۡجَمۡعَانِ
إِنَّمَا ٱسۡتَزَلَّهُمُ ٱلشَّيۡطَٰنُ بِبَعۡضِ مَا كَسَبُواْۖ
وَلَقَدۡ عَفَا ٱللَّهُ عَنۡهُمۡۗ إِنَّ ٱللَّهَ غَفُورٌ
حَلِيمٞ ١٥٥

១៥៥-ពិតប្រាកដណាស់ ពួកដែលបានរត់គេចនៅក្នុងចំណោមពួកអ្នកនៅថ្ងៃដែលក្រុមទាំងពីរបានជួបគ្នា(នៅសមរភូមិអ៊ូហ៊ុទ) គឺស្ហៃតនបានអូសទាញពួកគេ ដោយសារតែទង្វើមួយចំនួនដែលពួកគេបានប្រព្រឹត្ត។ តែអល់ឡោះពិតជាបានអធ្យាស្រ័យឱ្យពួកគេ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអត់ធ្មត់។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَكُونُواْ كَٱلَّذِينَ كَفَرُواْ
وَقَالُواْ لِإِخۡوَٰنِهِمۡ إِذَا ضَرَبُواْ فِي ٱلۡأَرۡضِ
أَوۡ كَانُواْ غُزًّى لَّوۡ كَانُواْ عِندَنَا مَا مَاتُواْ

១៥៦-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំធ្វើដូចជាពួកប្រឆាំង ដែលពួកគេបាននិយាយទៅកាន់បងប្អូនរបស់ពួកគេនៅពេលដែលបងប្អូនពួកគេបានធ្វើដំណើរនៅលើផែនដី(ដើម្បីធ្វើជំនួញ) ឬទៅធ្វើសង្គ្រាមថា: ប្រសិនបើពួកគេនៅជាមួយពួក

១-អ្នកដែលមានជំនឿដ៏ស្មោះត្រង់ចំពោះអល់ឡោះ។

وَمَا قُتِلُوا۟ لِيَجْعَلَ ٱللَّهُ ذَٰلِكَ حَسْرَةً فِى
قُلُوبِهِمْ ۗ وَٱللَّهُ يُحْىِۦ وَيُمِيتُ ۗ وَٱللَّهُ بِمَا
تَعْمَلُونَ بَصِيرٌ ﴿١٥٦﴾

យើង គឺពួកគេមិនស្លាប់ និងមិនត្រូវគេសម្លាប់ឡើយ ។ ដោយសារតែពាក្យសំដីដូចនោះហើយបានជាអល់ឡោះធ្វើឱ្យចិត្តរបស់ពួកគេមានការសោកស្ដាយយ៉ាងខ្លាំង ។ ហើយអល់ឡោះជាអ្នកធ្វើឱ្យរស់ និងជាអ្នកធ្វើឱ្យស្លាប់ ហើយអល់ឡោះមហាឃើញនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

وَلَئِن قُتِلْتُمْ فِى سَبِيلِ ٱللَّهِ أَوْ مُتُّمْ لَمَغْفِرَةٌ
مِّنَ ٱللَّهِ وَرَحْمَةٌ خَيْرٌ مِّمَّا يَجْمَعُونَ ﴿١٥٧﴾

១៥៧-(អល់ឡោះស្បថថា) ប្រសិនបើពួកអ្នកត្រូវគេសម្លាប់ក្នុងមាគ៌ារបស់អល់ឡោះ ឬបានស្លាប់(នៅក្នុងសមរភូមិ) គឺការអភ័យទោស និងការអាណិតស្រឡាញ់ពីអល់ឡោះប្រសើរជាងអ្វីដែលពួកគេប្រមូលទុក(ទ្រព្យសម្បត្តិ)នោះ ។

وَلَئِن مُّتُّمْ أَوْ قُتِلْتُمْ لَإِلَى ٱللَّهِ تُحْشَرُونَ ﴿١٥٨﴾

១៥៨-(អល់ឡោះស្បថថា) ប្រសិនបើពួកអ្នកបានស្លាប់ ឬត្រូវគេសម្លាប់នោះ ពួកអ្នកនឹងត្រូវគេប្រមូលផ្ដុំទៅចំពោះអល់ឡោះ ។

فَبِمَا رَحْمَةٍ مِّنَ ٱللَّهِ لِنتَ لَهُمْ ۖ وَلَوْ كُنتَ
فَظًّا غَلِيظَ ٱلْقَلْبِ لَٱنفَضُّوا۟ مِنْ حَوْلِكَ ۖ
فَٱعْفُ عَنْهُمْ وَٱسْتَغْفِرْ لَهُمْ وَشَاوِرْهُمْ فِى
ٱلْأَمْرِ ۖ فَإِذَا عَزَمْتَ فَتَوَكَّلْ عَلَى ٱللَّهِ ۚ إِنَّ ٱللَّهَ
يُحِبُّ ٱلْمُتَوَكِّلِينَ ﴿١٥٩﴾

១៥៩-ដោយសារមានក្ដីអាណិតស្រឡាញ់ពីអល់ឡោះ អ្នក(មូហាំម៉ាត់) បានធ្វើទន់ភ្លន់ចំពោះពួកគេ ។ តែបើអ្នកមានអាកប្បកិរិយាកោងកាចនិងរឹងរូសវិញនោះ គឺពួកគេនឹងចាកចេញពីអ្នកជាមិនខាន ។ ដូច្នេះចូរអ្នកអធ្យាស្រ័យដល់ពួកគេនិងសុំអភ័យទោសឱ្យពួកគេ ហើយចូរអ្នកពិភាក្សាជាមួយពួកគេគ្រប់កិច្ចការ ។ នៅពេលដែលអ្នកបានសម្រេចចិត្តហើយនោះ ចូរអ្នកប្រគល់ការទុកចិត្តលើអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្ដាអ្នកដែលប្រគល់ការទុកចិត្ត(លើទ្រង់) ។

إِن يَنصُرْكُمُ ٱللَّهُ فَلَا غَالِبَ لَكُمْ ۖ وَإِن
يَخْذُلْكُمْ فَمَن ذَا ٱلَّذِى يَنصُرُكُم مِّنۢ بَعْدِهِۦ ۗ
وَعَلَى ٱللَّهِ فَلْيَتَوَكَّلِ ٱلْمُؤْمِنُونَ ﴿١٦٠﴾

១៦០-ប្រសិនបើអល់ឡោះជួយដល់ពួកអ្នក គឺគ្មាននរណាម្នាក់អាចយកឈ្នះលើពួកអ្នកបានឡើយ ។ តែបើទ្រង់បោះបង់ពួកអ្នកចោល តើមានអ្នកណាអាចជួយពួកអ្នកក្រោយពីទ្រង់បាននោះ? ហើយចូរឱ្យបណ្ដាអ្នកដែលមានជំនឿប្រគល់ការទុកចិត្តទៅលើអល់ឡោះ ។

وَمَا كَانَ لِنَبِىٍّ أَن يَغُلَّ ۚ وَمَن يَغْلُلْ يَأْتِ بِمَا

១៦១-ហើយអំពើក្បត់មិនសក្ដិសមចំពោះណាពីឡើយ[1] ។ ហើយអ្នកណាដែលក្បត់[2] នៅថ្ងៃបរលោកគេនឹងនាំមកជាមួយនូវអ្វីដែល

---

១-ការយកជ័យភណ្ឌតែម្នាក់ឯង តែមូហាំម៉ាត់យកតែអ្វីដែលអល់ឡោះបានប្រគល់ឱ្យគាត់តែប៉ុណ្ណោះ ។

២-ការយកជ័យភណ្ឌដែលខុសពីណាពី និងអល់ឡោះបានអនុញ្ញាត ។

غَلَّ يَوۡمَ ٱلۡقِيَٰمَةِۚ ثُمَّ تُوَفَّىٰ كُلُّ نَفۡسٖ مَّا
كَسَبَتۡ وَهُمۡ لَا يُظۡلَمُونَ ﴿١٦١﴾

គេបានក្បត់នោះ ។ ក្រោយមកអល់ឡោះនឹងតបស្នងចំពោះបុគ្គល គ្រប់រូបនូវអ្វីដែលគេបានប្រព្រឹត្ត ដោយពួកគេមិនត្រូវបានគេ បំពានឡើយ ។

أَفَمَنِ ٱتَّبَعَ رِضۡوَٰنَ ٱللَّهِ كَمَنۢ بَآءَ بِسَخَطٖ مِّنَ
ٱللَّهِ وَمَأۡوَىٰهُ جَهَنَّمُۖ وَبِئۡسَ ٱلۡمَصِيرُ ﴿١٦٢﴾

១៦២-តើអ្នកដែលបានប្រតិបត្តិតាមការយល់ព្រមពីអល់ឡោះ (ដោយមិនបានយកផ្នែកណាមួយនៃជ័យភណ្ឌដោយខុសច្បាប់) ដូច អ្នកដែលបាននាំមកនូវការខឹងពីអល់ឡោះ(ដោយបានយកផ្នែកណា មួយនៃជ័យភណ្ឌដោយខុសច្បាប់)ដែរឬទេ? ហើយកន្លែងស្នាក់នៅ របស់គេគឺឋាននរក ហើយវាជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត ។

هُمۡ دَرَجَٰتٌ عِندَ ٱللَّهِۗ وَٱللَّهُ بَصِيرُۢ بِمَا
يَعۡمَلُونَ ﴿١٦٣﴾

១៦៣-ពួកគេស្ថិតនៅតាមលំដាប់ថ្នាក់ខុសៗគ្នាចំពោះ អល់ឡោះ ។ ហើយអល់ឡោះមហាឃើញនូវអ្វីដែលពួកគេប្រព្រឹត្ត ។

لَقَدۡ مَنَّ ٱللَّهُ عَلَى ٱلۡمُؤۡمِنِينَ إِذۡ بَعَثَ فِيهِمۡ
رَسُولٗا مِّنۡ أَنفُسِهِمۡ يَتۡلُواْ عَلَيۡهِمۡ ءَايَٰتِهِۦ
وَيُزَكِّيهِمۡ وَيُعَلِّمُهُمُ ٱلۡكِتَٰبَ وَٱلۡحِكۡمَةَ
وَإِن كَانُواْ مِن قَبۡلُ لَفِي ضَلَٰلٖ مُّبِينٍ ﴿١٦٤﴾

១៦៤-ពិតប្រាកដណាស់ អល់ឡោះបានប្រទាននៀកម៉ាត់ដ៏ធំ ធេងឱ្យបណ្ដាអ្នកមានជំនឿ នៅពេលដែលទ្រង់បានចាត់តាំងឱ្យពួក គេនូវអ្នកនាំសារម្នាក់ក្នុងចំណោមពួកគេផ្ទាល់ ដោយគេ(អ្នកនាំ សារ)សូត្រអាយ៉ាត់ៗរបស់ទ្រង់ឱ្យពួកគេស្ដាប់ និងសំអាតពួកគេ (អំពីប្រការស្ស៊ីរិក)និងបង្រៀនគម្ពីរ(គួរអាន)និងហ៊ិកម៉ាត់[១] ដល់ ពួកគេ ។ ហើយពួកគេកាលពីមុនស្ថិតនៅក្នុងភាពវង្វេងដ៏ច្បាស់ លាស់ ។

أَوَلَمَّآ أَصَٰبَتۡكُم مُّصِيبَةٞ قَدۡ أَصَبۡتُم مِّثۡلَيۡهَا قُلۡتُمۡ
أَنَّىٰ هَٰذَاۖ قُلۡ هُوَ مِنۡ عِندِ أَنفُسِكُمۡۗ إِنَّ ٱللَّهَ
عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ﴿١٦٥﴾

១៦៥-ហេតុអ្វីបានជានៅពេលដែលពួកអ្នកទទួលរងនូវគ្រោះ ថ្នាក់(ស្លាប់ឬរបួសនៅសមរភូមិអ៊ូហ៊ុទ)ដែលពួកអ្នកបានធ្វើឱ្យពួក គេទទួលរងគ្រោះដូចគ្នាទ្វេដង(ស្លាប់ឬរបួសនៅសមរភូមិហ្បាទើរ) ពួកអ្នកបែរជានិយាយថា: តើរឿងនេះមកពីណា? ចូរអ្នក(មូហាំ- ម៉ាត់)ឆ្លើយថា: វាមកពីខ្លួនពួកអ្នកផ្ទាល់ ។ ពិតប្រាកដណាស់ អល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

وَمَآ أَصَٰبَكُمۡ يَوۡمَ ٱلۡتَقَى ٱلۡجَمۡعَانِ فَبِإِذۡنِ ٱللَّهِ
وَلِيَعۡلَمَ ٱلۡمُؤۡمِنِينَ ﴿١٦٦﴾

១៦៦-ហើយអ្វីដែលពួកអ្នកបានទទួលរង(ការស្លាប់ ឬរបួស) នៅថ្ងៃដែលក្រុមទាំងពីរបានជួបគ្នា(ច្បាំងនៅសមរភូមិអ៊ូហ៊ុទ)គឺ ដោយសារតែការកំណត់របស់អល់ឡោះ ដើម្បីទ្រង់បង្ហាញឱ្យដឹង

---

១-ហ៊ិកម៉ាត់ : ស៊ុណ្ណះ(មាគ៌ារបស់មូហាំម៉ាត់) ។

ពីបណ្ដាអ្នកដែលមានជំនឿ ។

وَلِيَعۡلَمَ ٱلَّذِينَ نَافَقُواْۚ وَقِيلَ لَهُمۡ تَعَالَوۡاْ قَٰتِلُواْ
فِي سَبِيلِ ٱللَّهِ أَوِ ٱدۡفَعُواْۖ قَالُواْ لَوۡ نَعۡلَمُ قِتَالٗا
لَّٱتَّبَعۡنَٰكُمۡۗ هُمۡ لِلۡكُفۡرِ يَوۡمَئِذٍ أَقۡرَبُ مِنۡهُمۡ
لِلۡإِيمَٰنِۚ يَقُولُونَ بِأَفۡوَٰهِهِم مَّا لَيۡسَ فِي
قُلُوبِهِمۡۗ وَٱللَّهُ أَعۡلَمُ بِمَا يَكۡتُمُونَ ١٦٧

១៦៧-និងដើម្បីបង្ហាញឱ្យដឹងពីពួកពុតត្បុត ។ មានគេពោលទៅកាន់ពួកគេថា: ចូរពួកអ្នកមកចូលរួមក្នុងការធ្វើសង្គ្រាមក្នុងមាគ៌ារបស់អល់ឡោះ ឬជួយទប់ស្កាត់ចុះ ។ ពួកគេបានឆ្លើយថា: ប្រសិនបើពួកយើងដឹងថាមានសង្គ្រាមនោះ ពួកយើងប្រាកដជាចូលរួមជាមួយពួកអ្នកមិនខានឡើយ ។ ពួកគេនៅថ្ងៃនោះ ភាពគ្មានជំនឿរបស់ពួកគេខ្លាំងជាងភាពមានជំនឿ ។ ពួកគេនិយាយតែមាត់នូវអ្វីដែលគ្មាននៅក្នុងចិត្តរបស់ពួកគេ ។ អល់ឡោះដឹងបំផុតនូវអ្វីដែលពួកគេលាក់បាំង ។

ٱلَّذِينَ قَالُواْ لِإِخۡوَٰنِهِمۡ وَقَعَدُواْ لَوۡ أَطَاعُونَا مَا
قُتِلُواْۗ قُلۡ فَٱدۡرَءُواْ عَنۡ أَنفُسِكُمُ ٱلۡمَوۡتَ
إِن كُنتُمۡ صَٰدِقِينَ ١٦٨

១៦៨-គឺពួកដែលបាននិយាយទៅកាន់បងប្អូនរបស់ពួកគេ ដោយពួកគេមិនបានចេញទៅធ្វើសង្គ្រាមផងនោះថា: ប្រសិនបើពួកគេតាមយើង ពួកគេមិនត្រូវបានគេសម្លាប់ឡើយ ។ ចូរអ្នក(មូហាំម៉ាត់)ពោលថា: ដូច្នេះ ចូរពួកអ្នកច្រានសេចក្ដីស្លាប់ចេញពីខ្លួនរបស់ពួកអ្នកមើល ប្រសិនបើពួកអ្នកជាអ្នកត្រឹមត្រូវមែននោះ ។

وَلَا تَحۡسَبَنَّ ٱلَّذِينَ قُتِلُواْ فِي سَبِيلِ ٱللَّهِ أَمۡوَٰتَۢاۚ
بَلۡ أَحۡيَآءٌ عِندَ رَبِّهِمۡ يُرۡزَقُونَ ١٦٩

១៦៩-ចូរពួកអ្នកកុំគិតថា: អ្នកដែលត្រូវបានគេសម្លាប់ក្នុងមាគ៌ារបស់អល់ឡោះនោះស្លាប់ឱ្យសោះ ។ ផ្ទុយទៅវិញ ពួកគេរស់នៅក្បែរម្ចាស់របស់ពួកគេ ដោយត្រូវទ្រង់ប្រទានលាភសក្ការៈដល់ពួកគេ ។

فَرِحِينَ بِمَآ ءَاتَىٰهُمُ ٱللَّهُ مِن فَضۡلِهِۦ
وَيَسۡتَبۡشِرُونَ بِٱلَّذِينَ لَمۡ يَلۡحَقُواْ بِهِم مِّنۡ
خَلۡفِهِمۡ أَلَّا خَوۡفٌ عَلَيۡهِمۡ وَلَا هُمۡ
يَحۡزَنُونَ ١٧٠

១៧០-ដោយពួកគេសប្បាយរីករាយនឹងអ្វីដែលអល់ឡោះបានប្រទានឱ្យពួកគេអំពីការប្រោសប្រទាន(លាភសក្ការៈ)របស់ទ្រង់ ហើយពួកគេរីករាយចំពោះបណ្ដាអ្នកដែលនៅរស់ក្រោយពីពួកគេ (អ្នកដែលធ្វើសង្គ្រាមក្នុងមាគ៌ារបស់អល់ឡោះ) ដោយពួកគេគ្មានការភ័យខ្លាច និងគ្មានការព្រួយបារម្ភអ្វីឡើយ ។

۞ يَسۡتَبۡشِرُونَ بِنِعۡمَةٖ مِّنَ ٱللَّهِ وَفَضۡلٖ وَأَنَّ ٱللَّهَ
لَا يُضِيعُ أَجۡرَ ٱلۡمُؤۡمِنِينَ ١٧١

១៧១-ពួកគេសប្បាយរីករាយនឹងនៀកម៉ាត់ និងការសន្ដោសប្រណីពីអល់ឡោះ ។ ហើយពិតប្រាកដណាស់ អល់ឡោះមិនធ្វើឱ្យបាត់បង់នូវផលបុណ្យរបស់បណ្ដាអ្នកដែលមានជំនឿឡើយ ។

ٱلَّذِينَ ٱسۡتَجَابُواْ لِلَّهِ وَٱلرَّسُولِ مِنۢ بَعۡدِ مَآ

១៧២-គឺបណ្ដាអ្នកដែលបានឆ្លើយតបចំពោះអល់ឡោះ និងអ្នកនាំសារ(ក្នុងការធ្វើសង្គ្រាមជាមួយពួកមូស្ហរីគីន)បន្ទាប់ពីពួកគេបាន

أَصَابَهُمُ ٱلْقَرْحُ ۚ لِلَّذِينَ أَحْسَنُوا۟ مِنْهُمْ وَٱتَّقَوْا۟ أَجْرٌ عَظِيمٌ ﴿١٧٢﴾

ទទួលរងរបួស(នៅសមរភូមិអ៊ូហ៊ុទ)។ បណ្ដាអ្នកដែលបានធ្វើអំពើល្អ និងកោតខ្លាចអល់ឡោះក្នុងចំណោមពួកគេនឹងទទួលបានផលបុណ្យដ៏ធំធេង។

ٱلَّذِينَ قَالَ لَهُمُ ٱلنَّاسُ إِنَّ ٱلنَّاسَ قَدْ جَمَعُوا۟ لَكُمْ فَٱخْشَوْهُمْ فَزَادَهُمْ إِيمَٰنًا وَقَالُوا۟ حَسْبُنَا ٱللَّهُ وَنِعْمَ ٱلْوَكِيلُ ﴿١٧٣﴾

១៧៣-និងបណ្ដាអ្នកដែលមនុស្សលោកបាននិយាយទៅកាន់ពួកគេថា: ពិតប្រាកដណាស់មនុស្សលោក[1]នឹងប្រមូលផ្ដុំគ្នាប្រឆាំងនឹងពួកអ្នក ដូច្នេះចូរពួកអ្នកខ្លាចពួកគេ ផ្ទុយទៅវិញវាធ្វើឱ្យជំនឿរបស់ពួកគេកាន់តែកើនឡើងថែមទៀត ហើយពួកគេបាននិយាយថា: អល់ឡោះតែមួយគត់គឺគ្រប់គ្រាន់សម្រាប់ពួកយើង ហើយទ្រង់ជាអ្នកគាំពារដ៏ល្អប្រសើរបំផុត។

فَٱنقَلَبُوا۟ بِنِعْمَةٍ مِّنَ ٱللَّهِ وَفَضْلٍ لَّمْ يَمْسَسْهُمْ سُوٓءٌ وَٱتَّبَعُوا۟ رِضْوَٰنَ ٱللَّهِ ۗ وَٱللَّهُ ذُو فَضْلٍ عَظِيمٍ ﴿١٧٤﴾

១៧៤-បន្ទាប់មកពួកគេក៏បានវិលត្រឡប់(ពីសមរភូមិ)ដោយនៀកម៉ាត់និងក្ដីសន្ដោសប្រណីពីអល់ឡោះ។ ដោយពួកគេមិនទទួលរងនូវគ្រោះថ្នាក់អ្វីឡើយ ហើយពួកគេគោរពតាមការយល់ព្រមរបស់អល់ឡោះ។ ហើយអល់ឡោះមានក្ដីសន្ដោសប្រណីដ៏ធំធេង។

إِنَّمَا ذَٰلِكُمُ ٱلشَّيْطَٰنُ يُخَوِّفُ أَوْلِيَآءَهُۥ فَلَا تَخَافُوهُمْ وَخَافُونِ إِن كُنتُم مُّؤْمِنِينَ ﴿١٧٥﴾

១៧៥-ពិតប្រាកដណាស់ រឿងនោះ(ការធ្វើសង្គ្រាម)គឺស្ហៃតនជាអ្នកបំភិតបំភ័យពួកដែលគោរពតាមវា។ ដូច្នេះ ចូរពួកអ្នកកុំខ្លាចពួកគេអ្វី តែពួកអ្នកត្រូវខ្លាចយើងវិញ ប្រសិនបើពួកអ្នកជាអ្នកដែលមានជំនឿនោះ។

وَلَا يَحْزُنكَ ٱلَّذِينَ يُسَٰرِعُونَ فِى ٱلْكُفْرِ ۚ إِنَّهُمْ لَن يَضُرُّوا۟ ٱللَّهَ شَيْـًٔا ۗ يُرِيدُ ٱللَّهُ أَلَّا يَجْعَلَ لَهُمْ حَظًّا فِى ٱلْـَٔاخِرَةِ ۖ وَلَهُمْ عَذَابٌ عَظِيمٌ ﴿١٧٦﴾

១៧៦-ហើយចូរកុំឱ្យពួកដែលប្រញាប់ប្រញាល់ក្នុងការប្រឆាំងនោះធ្វើឱ្យអ្នក(មូហាំម៉ាត់)ព្រួយបារម្ភឱ្យសោះ។ ពិតប្រាកដណាស់ពួកគេមិនអាចបង្កគ្រោះថ្នាក់ដល់អល់ឡោះបន្តិចណាឡើយ។ អល់ឡោះមានបំណងមិនឱ្យពួកគេមានចំណែកអ្វីឡើយនៅថ្ងៃបរលោក។ ហើយពួកគេនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។

إِنَّ ٱلَّذِينَ ٱشْتَرَوُا۟ ٱلْكُفْرَ بِٱلْإِيمَٰنِ لَن يَضُرُّوا۟ ٱللَّهَ شَيْـًٔا وَلَهُمْ عَذَابٌ أَلِيمٌ ﴿١٧٧﴾

១៧៧-ពិតប្រាកដណាស់ ពួកដែលយកជំនឿប្ដូរយកការគ្មានជំនឿនោះ គឺពួកគេមិនអាចបង្កគ្រោះថ្នាក់អ្វីដល់អល់ឡោះឡើយ ហើយពួកគេនឹងទទួលទារុណកម្មយ៉ាងឈឺចាប់បំផុត។

وَلَا يَحْسَبَنَّ ٱلَّذِينَ كَفَرُوٓا۟ أَنَّمَا نُمْلِى لَهُمْ خَيْرٌ

១៧៨-ហើយកុំឱ្យពួកដែលប្រឆាំងនោះនឹកស្មានថា: ការដែល

---

១-អាពូសុហ្វយ៉ាន និងអ្នកដែលបានចូលរួមជាមួយគាត់។

لِّأَنفُسِهِمۡۚ إِنَّمَا نُمۡلِي لَهُمۡ لِيَزۡدَادُوٓاْ إِثۡمٗاۚ
وَلَهُمۡ عَذَابٞ مُّهِينٞ ١٧٨

យើងពន្យារអាយុរបស់ពួកគេ គឺជាការប្រសើរសម្រាប់ពួកគេឱ្យ សោះ ។ តាមពិតយើងពន្យារអាយុរបស់ពួកគេនោះ គឺដើម្បីបន្ថែម បាបកម្មដល់ពួកគេប៉ុណ្ណោះ ។ ហើយសម្រាប់ពួកគេ គឺទារុណកម្ម ដ៏អាម៉ាស់បំផុត ។

مَّا كَانَ ٱللَّهُ لِيَذَرَ ٱلۡمُؤۡمِنِينَ عَلَىٰ مَآ أَنتُمۡ
عَلَيۡهِ حَتَّىٰ يَمِيزَ ٱلۡخَبِيثَ مِنَ ٱلطَّيِّبِۗ وَمَا
كَانَ ٱللَّهُ لِيُطۡلِعَكُمۡ عَلَى ٱلۡغَيۡبِ وَلَٰكِنَّ ٱللَّهَ
يَجۡتَبِي مِن رُّسُلِهِۦ مَن يَشَآءُۖ فَـَٔامِنُواْ بِٱللَّهِ
وَرُسُلِهِۦۚ وَإِن تُؤۡمِنُواْ وَتَتَّقُواْ فَلَكُمۡ أَجۡرٌ
عَظِيمٞ ١٧٩

១៧៩-អល់ឡោះមិនបណ្តោយឱ្យបណ្តាអ្នកដែលមានជំនឿ ស្ថិតនៅលើអ្វីដែលពួកអ្នកមាននោះទេ លុះត្រាតែទ្រង់បានបែង ចែកឱ្យដាច់ពីគ្នារវាងប្រការអាក្រក់ និងប្រការល្អ ។ ហើយ អល់ឡោះក៏មិនបានលាតត្រដាងឱ្យពួកអ្នកនូវប្រការអាថិកំបាំង ដែរ ។ ក៏ប៉ុន្តែអល់ឡោះជ្រើសរើសក្នុងចំណោមអ្នកនាំសាររបស់ ទ្រង់ចំពោះអ្នកណាដែលទ្រង់មានចេតនា(ឱ្យដឹងនូវអាថិកំបាំង) ។ ដូច្នេះ ចូរពួកអ្នកមានជំនឿលើអល់ឡោះ និងបណ្តាអ្នកនាំសារ របស់ទ្រង់ចុះ ។ ហើយប្រសិនបើពួកអ្នកមានជំនឿនិងកោតខ្លាច អល់ឡោះនោះ ពួកអ្នកនឹងទទួលបានផលបុណ្យដ៏មហាធំធេង ជាមិនខាន ។

وَلَا يَحۡسَبَنَّ ٱلَّذِينَ يَبۡخَلُونَ بِمَآ ءَاتَىٰهُمُ ٱللَّهُ
مِن فَضۡلِهِۦ هُوَ خَيۡرٗا لَّهُمۖ بَلۡ هُوَ شَرّٞ لَّهُمۡۖ
سَيُطَوَّقُونَ مَا بَخِلُواْ بِهِۦ يَوۡمَ ٱلۡقِيَٰمَةِۗ وَلِلَّهِ
مِيرَٰثُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۗ وَٱللَّهُ بِمَا تَعۡمَلُونَ
خَبِيرٞ ١٨٠

១៨០-ហើយកុំឱ្យពួកដែលកំណាញ់ចំពោះអ្វីដែលអល់ឡោះ បានប្រទានឱ្យពួកគេអំពីលាភសក្ការៈរបស់ទ្រង់នោះស្មានថា វាជា ការប្រសើរសម្រាប់ពួកគេឱ្យសោះ ។ ផ្ទុយទៅវិញវាជាប្រការ អាក្រក់សម្រាប់ពួកគេទៅវិញទេ ។ គេនឹងយកទ្រព្យសម្បត្តិដែល ពួកគេកំណាញ់នោះទៅរុំព័ទ្ធករបស់ពួកគេនៅថ្ងៃបរលោក ។ ហើយ មរតកដែលមាននៅលើមេឃជាច្រើនជាន់និងផែនដីជាកម្មសិទ្ធិរបស់ អល់ឡោះ ។ ហើយអល់ឡោះដឹងបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

لَّقَدۡ سَمِعَ ٱللَّهُ قَوۡلَ ٱلَّذِينَ قَالُوٓاْ إِنَّ ٱللَّهَ
فَقِيرٞ وَنَحۡنُ أَغۡنِيَآءُۘ سَنَكۡتُبُ مَا قَالُواْ وَقَتۡلَهُمُ
ٱلۡأَنۢبِيَآءَ بِغَيۡرِ حَقّٖ وَنَقُولُ ذُوقُواْ عَذَابَ
ٱلۡحَرِيقِ ١٨١

១៨១-ជាការពិតណាស់ អល់ឡោះបានឮនូវពាក្យសំដីពួក (យ៉ាហ៊ូទី)ដែលបាននិយាយថាៈ ពិតប្រាកដណាស់ អល់ឡោះជា អ្នកក្រីក្រ ហើយពួកយើងគឺជាអ្នកមាន ។ យើង(អល់ឡោះ)នឹង កត់ត្រានូវពាក្យសំដីរបស់ពួកគេ និងការសម្លាប់របស់ពួកគេចំពោះ បណ្តាណាពីដោយអយុត្តិធម៌ ហើយយើងនឹងបញ្ជាថាៈ ចូរពួកអ្នក ភ្លក្សរសជាតិទារុណកម្ម(ភ្លើងនរក)ដែលឆាបឆេះចុះ ។

ذَٰلِكَ بِمَا قَدَّمَتۡ أَيۡدِيكُمۡ وَأَنَّ ٱللَّهَ لَيۡسَ

១៨២-នោះគឺដោយសារតែអ្វីដែលពួកអ្នកបានប្រព្រឹត្តកន្លង

بِظَلَّٰمٍ لِّلۡعَبِيدِ ﴿١٨٢﴾

មក ។ ហើយពិតប្រាកដណាស់ អល់ឡោះមិនមែនជាអ្នកបំពាន
លើខ្ញុំរបស់ទ្រង់ឡើយ ។

ٱلَّذِينَ قَالُوٓاْ إِنَّ ٱللَّهَ عَهِدَ إِلَيۡنَآ أَلَّا
نُؤۡمِنَ لِرَسُولٍ حَتَّىٰ يَأۡتِيَنَا بِقُرۡبَانٖ تَأۡكُلُهُ
ٱلنَّارُۗ قُلۡ قَدۡ جَآءَكُمۡ رُسُلٞ مِّن قَبۡلِي
بِٱلۡبَيِّنَٰتِ وَبِٱلَّذِي قُلۡتُمۡ فَلِمَ قَتَلۡتُمُوهُمۡ إِن
كُنتُمۡ صَٰدِقِينَ ﴿١٨٣﴾

១៨៣-ពួក(យ៉ាហ៊ូទី)ដែលបាននិយាយថា: ពិតប្រាកដណាស់
អល់ឡោះបានបញ្ជាមកចំពោះពួកយើង(ក្នុងគម្ពីរតាវ់រ៉ត)មិនឱ្យ
ពួកយើងជឿលើអ្នកនាំសារណាម្នាក់ឡើយ លុះត្រាតែគេបាននាំមក
ឱ្យពួកយើងនូវគួរបា្ញនដែលមានភ្លើង(មកពីលើមេឃ)ឆេះវា ។ ចូរ
អ្នក(មូហាំម៉ាត់)ឆ្លើយថា: ពិតប្រាកដណាស់ មានអ្នកនាំសារ
ជាច្រើនបានមកដល់ពួកអ្នកមុនខ្ញុំ ដោយនាំមកជាមួយនូវភស្តុតាង
ជាច្រើន និងអ្វីដែលពួកអ្នកបានទាមទារនេះ ចុះហេតុអ្វីបានជាពួក
អ្នកសម្លាប់ពួកគេ(អ្នកនាំសារ) ប្រសិនបើពួកអ្នកជាអ្នកត្រឹមត្រូវ
មែននោះ ?

فَإِن كَذَّبُوكَ فَقَدۡ كُذِّبَ رُسُلٞ مِّن قَبۡلِكَ
جَآءُو بِٱلۡبَيِّنَٰتِ وَٱلزُّبُرِ وَٱلۡكِتَٰبِ ٱلۡمُنِيرِ ﴿١٨٤﴾

១៨៤-តែប្រសិនបើពួកគេបដិសេធនឹងអ្នក(មូហាំម៉ាត់)ជាការ
ពិតណាស់ បណ្ដាអ្នកនាំសារមុនអ្នកក៏ត្រូវបានគេបដិសេធដែរដែល
ពួកគាត់បាននាំមកនូវមុជីហ្សាត់ជាច្រើន និងបណ្ដាគម្ពីរដែលបាន
បញ្ចុះពីលើមេឃ ហើយនិងគម្ពីរដែលបានបំភ្លឺដ៏ច្បាស់លាស់ ។

كُلُّ نَفۡسٖ ذَآئِقَةُ ٱلۡمَوۡتِۗ وَإِنَّمَا تُوَفَّوۡنَ
أُجُورَكُمۡ يَوۡمَ ٱلۡقِيَٰمَةِۖ فَمَن زُحۡزِحَ عَنِ
ٱلنَّارِ وَأُدۡخِلَ ٱلۡجَنَّةَ فَقَدۡ فَازَۗ وَمَا ٱلۡحَيَوٰةُ
ٱلدُّنۡيَآ إِلَّا مَتَٰعُ ٱلۡغُرُورِ ﴿١٨٥﴾

១៨៥-រាល់ជីវិតទាំងអស់នឹងភ្លក្សរសជាតិនៃការស្លាប់ ។
ហើយពិតប្រាកដណាស់ អល់ឡោះនឹងតបស្នងនូវផលបុណ្យទាំង
ឡាយរបស់ពួកអ្នកនាថ្ងៃបរលោក ។ ដូច្នេះ អ្នកណាហើយដែល
ត្រូវអល់ឡោះបញ្ចៀសពីភ្លើងនរក និងបានបញ្ចូលគេទៅក្នុង
ឋានសួគ៌នោះ គេប្រាកដជាទទួលបានជោគជ័យ ។ ហើយការរស់
នៅក្នុងលោកិយនេះ គ្មានអ្វីក្រៅពីការត្រេកត្រអាលបោកបញ្ឆោត
នោះឡើយ ។

۞ لَتُبۡلَوُنَّ فِيٓ أَمۡوَٰلِكُمۡ وَأَنفُسِكُمۡ
وَلَتَسۡمَعُنَّ مِنَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ مِن

១៨៦-ពិតប្រាកដណាស់ ពួកអ្នកត្រូវបានគេសាកល្បងនៅក្នុង
ទ្រព្យសម្បត្តិនិងខ្លួនប្រាណរបស់ពួកអ្នក[1] ហើយពួកអ្នកពិតជាឮនូវ
ការបញ្ឈឺចិត្តជាច្រើនពីសំណាក់ពួកដែលគេបានផ្ដល់គម្ពីរឱ្យមុនពួក

១-អល់ឡោះសាកល្បងនៅក្នុងទ្រព្យសម្បត្តិដោយបញ្ជាឱ្យចំណាយខ្លះនៅក្នុងមាគ៌ារបស់អល់ឡោះ ដូចជាឧបត្ថម្ភដល់សមរភូមិ បរិច្ចាគហ្សាកាត់ និងបរិច្ចាគផ្សេងៗទៀត ។ នៅក្នុងខ្លួនប្រាណ ទ្រង់ដាក់កាតព្វកិច្ចឱ្យគោរពប្រណិប័តន៍ ទទួលការរងរបួស ការស្លាប់ និងការព្រាត់ប្រាស ។ ទាំងនេះ គឺក្នុងគោលបំណងបែងចែករវាងអ្នកដែលមានជំនឿ និងអ្នកដែលគ្មានជំនឿ ។

قَبۡلِكُمۡ وَمِنَ ٱلَّذِينَ أَشۡرَكُوٓاْ أَذٗى كَثِيرٗاۚ وَإِن تَصۡبِرُواْ وَتَتَّقُواْ فَإِنَّ ذَٰلِكَ مِنۡ عَزۡمِ ٱلۡأُمُورِ ١٨٦

អ្នកនិងពីសំណាក់ពួកដែលធ្វើស្ហ៊ីរិក ។ តែប្រសិនបើពួកអ្នកអត់ធ្មត់ និងកោតខ្លាចអល់ឡោះ ពិតប្រាកដណាស់នោះគឺជាកិច្ចការមួយ ដែលសំខាន់ ។

وَإِذۡ أَخَذَ ٱللَّهُ مِيثَٰقَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ لَتُبَيِّنُنَّهُۥ لِلنَّاسِ وَلَا تَكۡتُمُونَهُۥ فَنَبَذُوهُ وَرَآءَ ظُهُورِهِمۡ وَٱشۡتَرَوۡاْ بِهِۦ ثَمَنٗا قَلِيلٗاۖ فَبِئۡسَ مَا يَشۡتَرُونَ ١٨٧

១៨៧-ហើយ(ចូរចងចាំ) នៅពេលដែលអល់ឡោះបានយកកិច្ចសន្យាពីពួកដែលគេបានផ្តល់គម្ពីរឱ្យ(យ៉ាហ៊ូទី និងណាសរ៉នី) ដើម្បីឱ្យពួកអ្នកបំភ្លឺវាដល់មនុស្សលោក ហើយកុំឱ្យពួកអ្នកលាក់បាំងវា ប៉ុន្តែពួកគេបានបោះបង់វានៅពីក្រោយខ្នងរបស់ពួកគេ ហើយពួកគេបានលក់(ប្តូរ) វានឹងតម្លៃដ៏តិចតួចបំផុត ។ ដូច្នេះ អ្វីដែលពួកគេបានលក់(ប្តូរ) នោះគឺអាក្រក់បំផុត ។

لَا تَحۡسَبَنَّ ٱلَّذِينَ يَفۡرَحُونَ بِمَآ أَتَواْ وَّيُحِبُّونَ أَن يُحۡمَدُواْ بِمَا لَمۡ يَفۡعَلُواْ فَلَا تَحۡسَبَنَّهُم بِمَفَازَةٖ مِّنَ ٱلۡعَذَابِۖ وَلَهُمۡ عَذَابٌ أَلِيمٞ ١٨٨

១៨៨-ចូរអ្នកកុំនឹកស្មានឱ្យសោះចំពោះពួកដែលកំពុងរីករាយសប្បាយនឹងអ្វីដែលពួកគេបានប្រព្រឹត្ត ហើយពួកគេពេញចិត្តឱ្យគេកោតសរសើរនូវអ្វីដែលពួកគេមិនបានធ្វើ ។ ចូរអ្នកកុំនឹកស្មានឱ្យសោះថា ពួកគេនេះរួចផុតពីទារុណកម្ម ។ ហើយពួកគេនឹងទទួលទារុណកម្មដ៏ឈឺចាប់បំផុត ។

وَلِلَّهِ مُلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۗ وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ قَدِيرٌ ١٨٩

១៨៩-ហើយអំណាចគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

إِنَّ فِي خَلۡقِ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَٱخۡتِلَٰفِ ٱلَّيۡلِ وَٱلنَّهَارِ لَأٓيَٰتٖ لِّأُوْلِي ٱلۡأَلۡبَٰبِ ١٩٠

១៩០-ពិតប្រាកដណាស់ ក្នុងការបង្កើតមេឃជាច្រើនជាន់ និងផែនដី ហើយការផ្លាស់ប្តូររវាងយប់និងថ្ងៃ គឺជាភស្តុតាងយ៉ាងច្បាស់លាស់សម្រាប់ពួកបញ្ញាជន ។

ٱلَّذِينَ يَذۡكُرُونَ ٱللَّهَ قِيَٰمٗا وَقُعُودٗا وَعَلَىٰ جُنُوبِهِمۡ وَيَتَفَكَّرُونَ فِي خَلۡقِ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ رَبَّنَا مَا خَلَقۡتَ هَٰذَا بَٰطِلٗا سُبۡحَٰنَكَ فَقِنَا عَذَابَ ٱلنَّارِ ١٩١

១៩១-គឺបណ្តាអ្នកដែលរំលឹកទៅចំពោះអល់ឡោះជានិច្ចកាល (ក្នុងពេលសឡាត) ទាំងពេលឈរ និងពេលអង្គុយ ពេលទំរេតផ្អៀង ហើយពួកគេសញ្ជឹងគិតពីការបង្កើតមេឃជាច្រើនជាន់ និងផែនដី(ដោយនិយាយថា) ឱម្ចាស់របស់ពួកយើង! ទ្រង់មិនបានបង្កើតអ្វីទាំងនេះដោយគ្មានគោលបំណងនោះឡើយ ។ ទ្រង់មហាស្អាតស្អំ! សូមទ្រង់ថែរក្សាពួកយើងពីទារុណកម្មភ្លើងនរកផង ។

رَبَّنَآ إِنَّكَ مَن تُدۡخِلِ ٱلنَّارَ فَقَدۡ أَخۡزَيۡتَهُۥۖ

១៩២-ឱម្ចាស់របស់ពួកយើង! ពិតប្រាកដណាស់ អ្នកណាដែល

وَمَا لِلظَّٰلِمِينَ مِنۡ أَنصَارٖ ١٩٢

ទ្រង់បានបញ្ចូលគេទៅក្នុងឋាននរក គឺទ្រង់បានធ្វើឱ្យគេអាម៉ាស់ ហើយសម្រាប់ពួកដែលបំពាននោះគ្មានអ្នកណាជួយឡើយ ។

رَّبَّنَآ إِنَّنَا سَمِعۡنَا مُنَادِيٗا يُنَادِي لِلۡإِيمَٰنِ أَنۡ
ءَامِنُواْ بِرَبِّكُمۡ فَـَٔامَنَّاۚ رَبَّنَا فَٱغۡفِرۡ لَنَا ذُنُوبَنَا
وَكَفِّرۡ عَنَّا سَيِّـَٔاتِنَا وَتَوَفَّنَا مَعَ ٱلۡأَبۡرَارِ ١٩٣

១៩៣-ឱម្ចាស់របស់ពួកយើង! ជាការពិតណាស់ ពួកយើងបានឮអ្នកអំពាវនាវ( មូហាំម៉ាត់)ដែលអំពាវនាវដើម្បីឱ្យមានជំនឿថា: ចូរពួកអ្នកជឿលើម្ចាស់របស់ពួកអ្នកចុះ ហើយពួកយើងក៏មានជំនឿ ។ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាអភ័យទោសដល់ពួកយើងនូវទោសកំហុសទាំងឡាយរបស់ពួកយើងផង ។ ហើយសូមទ្រង់មេត្តាលុបលាងឱ្យពួកយើងនូវអំពើអាក្រក់របស់ពួកយើងផង ។ ហើយសូមទ្រង់មេត្តាឱ្យពួកយើងស្លាប់នៅជាមួយបណ្តាអ្នកដែលសាងអំពើល្អផង ។

رَبَّنَا وَءَاتِنَا مَا وَعَدتَّنَا عَلَىٰ رُسُلِكَ وَلَا تُخۡزِنَا
يَوۡمَ ٱلۡقِيَٰمَةِۗ إِنَّكَ لَا تُخۡلِفُ ٱلۡمِيعَادَ ١٩٤

១៩៤-ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាប្រទានឱ្យពួកយើងនូវអ្វីដែលទ្រង់បានសន្យាចំពោះពួកយើងតាមរយៈអ្នកនាំសារទាំងឡាយរបស់ទ្រង់ផង ហើយសូមទ្រង់មេត្តាកុំធ្វើឱ្យពួកយើងអាម៉ាស់នៅថ្ងៃបរលោកអ្វី ។ ពិតប្រាកដណាស់ ទ្រង់មិនក្បត់កិច្ចសន្យាឡើយ ។

فَٱسۡتَجَابَ لَهُمۡ رَبُّهُمۡ أَنِّي لَآ أُضِيعُ عَمَلَ
عَٰمِلٖ مِّنكُم مِّن ذَكَرٍ أَوۡ أُنثَىٰۖ بَعۡضُكُم مِّنۢ
بَعۡضٖۖ فَٱلَّذِينَ هَاجَرُواْ وَأُخۡرِجُواْ مِن
دِيَٰرِهِمۡ وَأُوذُواْ فِي سَبِيلِي وَقَٰتَلُواْ وَقُتِلُواْ
لَأُكَفِّرَنَّ عَنۡهُمۡ سَيِّـَٔاتِهِمۡ وَلَأُدۡخِلَنَّهُمۡ جَنَّٰتٖ
تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ ثَوَابٗا مِّنۡ عِندِ ٱللَّهِۚ
وَٱللَّهُ عِندَهُۥ حُسۡنُ ٱلثَّوَابِ ١٩٥

១៩៥-ដូច្នេះម្ចាស់របស់ពួកគេបានទទួលយក( ការបួងសួងសុំ)ពីពួកគេ ។ ពិតប្រាកដណាស់ យើងមិនបំបាត់ទង្វើរបស់អ្នកដែលធ្វើក្នុងចំណោមពួកអ្នកឡើយ ទោះបីជាបុរសឬស្ត្រីក្តី ដោយពួកអ្នកមកពីពូជអំបូរតែមួយ ។ រីឯបណ្តាអ្នកដែលបានភៀសខ្លួន និងត្រូវបានគេបណ្តេញចេញពីលំនៅដ្ឋានរបស់ពួកគេ ហើយត្រូវបានគេធ្វើបាបក្នុងមាគ៌ារបស់យើង ហើយពួកគេបានធ្វើសង្គ្រាមនិងត្រូវបានគេសម្លាប់នោះ យើងពិតជានឹងលុបលាងទោសឱ្យពួកគេនូវអំពើអាក្រក់ទាំងឡាយរបស់ពួកគេ ហើយយើងពិតជានឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដែលជាការតបស្នងពីអល់ឡោះ ។ ហើយអល់ឡោះ ទ្រង់មានការតបស្នងដ៏ល្អប្រពៃបំផុត ។

لَا يَغُرَّنَّكَ تَقَلُّبُ ٱلَّذِينَ كَفَرُواْ فِي ٱلۡبِلَٰدِ ١٩٦

១៩៦-ចូរកុំឱ្យការប្តូរទីតាំងរបស់ពួកដែលប្រឆាំង( ដើម្បីស្វែងរកផលចំណេញ)នៅក្នុងស្រុកបោកប្រាស់អ្នក( មូហាំម៉ាត់)

ឱ្យសោះ។

១៩៧-វាគ្រាន់តែជាការសប្បាយរីករាយមួយរយៈពេលខ្លីប៉ុណ្ណោះ។ ក្រោយមកទីជម្រករបស់ពួកគេគឺឋាននរកជើហាន់ណាំ ហើយជាកន្លែងដ៏អាក្រក់បំផុត។

១៩៨-ក៏ប៉ុន្តែបណ្តាអ្នកដែលកោតខ្លាចម្ចាស់របស់ពួកគេវិញ ពួកគេនឹងទទួលបានឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ជាកន្លែងស្នាក់នៅមកពីអល់ឡោះ។ ហើយអ្វីៗដែលមកពីអល់ឡោះនោះ គឺប្រសើរបំផុតសម្រាប់បណ្តាអ្នកដែលសាងអំពើល្អ។

១៩៩-ហើយពិតប្រាកដណាស់ នៅក្នុងចំណោមពួកអះលីគីតាបមានអ្នកដែលមានជំនឿលើអល់ឡោះនិងអ្វីដែលគេបានបញ្ចុះឱ្យពួកអ្នក(គម្ពីរគួរអាន) ហើយនិងអ្វីដែលគេបានបញ្ចុះឱ្យពួកគេ(គម្ពីរតាវរ៉ត និងគម្ពីរអ៊ិញជីល)ដោយពួកគេឱនលំទោនចំពោះអល់ឡោះ។ ពួកគេមិនលក់(ប្តូរ)អាយ៉ាត់ៗរបស់អល់ឡោះនឹងតម្លៃបន្តិចបន្តួចឡើយ។ អ្នកទាំងនោះនឹងទទួលបានផលបុណ្យពីម្ចាស់របស់ពួកគេជាមិនខាន។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកជំរះក្តីយ៉ាងរហ័សបំផុត។

២០០-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកអត់ធ្មត់ ហើយអត់ធ្មត់ឱ្យបានច្រើន(ជាងសត្រូវរបស់អ្នក)។ ហើយចូរពួកអ្នកការពារទឹកដី និងកោតខ្លាចអល់ឡោះ ដើម្បីពួកអ្នកនឹងទទួលបានជោគជ័យ។

## ជំពូកអាន់នីសាក

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-ឱមនុស្សលោក! ចូរពួកអ្នកកោតខ្លាចម្ចាស់របស់ពួកអ្នក ដែលបានបង្កើតពួកអ្នកចេញពីមនុស្សតែមួយគត់(អាដាំ) ហើយទ្រង់បានបង្កើតចេញពីគាត់នូវភរិយារបស់គាត់(ហាវ៉ា) ហើយទ្រង់បានបង្កើតចេញពីអ្នកទាំងពីរនូវបុរសនិងស្ត្រីជាច្រើន។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ ដែលពួកអ្នកទាមទារសិទ្ធិទៅវិញទៅ

مَتَٰعٞ قَلِيلٞ ثُمَّ مَأۡوَىٰهُمۡ جَهَنَّمُۖ وَبِئۡسَ
ٱلۡمِهَادُ ١٩٧

لَٰكِنِ ٱلَّذِينَ ٱتَّقَوۡاْ رَبَّهُمۡ لَهُمۡ جَنَّٰتٞ تَجۡرِي
مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَا نُزُلٗا مِّنۡ
عِندِ ٱللَّهِۗ وَمَا عِندَ ٱللَّهِ خَيۡرٞ لِّلۡأَبۡرَارِ ١٩٨

وَإِنَّ مِنۡ أَهۡلِ ٱلۡكِتَٰبِ لَمَن يُؤۡمِنُ بِٱللَّهِ وَمَآ
أُنزِلَ إِلَيۡكُمۡ وَمَآ أُنزِلَ إِلَيۡهِمۡ خَٰشِعِينَ لِلَّهِ لَا
يَشۡتَرُونَ بِـَٔايَٰتِ ٱللَّهِ ثَمَنٗا قَلِيلًاۗ أُوْلَٰٓئِكَ
لَهُمۡ أَجۡرُهُمۡ عِندَ رَبِّهِمۡۗ إِنَّ ٱللَّهَ سَرِيعُ
ٱلۡحِسَابِ ١٩٩

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱصۡبِرُواْ وَصَابِرُواْ
وَرَابِطُواْ وَٱتَّقُواْ ٱللَّهَ لَعَلَّكُمۡ تُفۡلِحُونَ ٢٠٠

## سورة النساء

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

يَٰٓأَيُّهَا ٱلنَّاسُ ٱتَّقُواْ رَبَّكُمُ ٱلَّذِي خَلَقَكُم مِّن
نَّفۡسٖ وَٰحِدَةٖ وَخَلَقَ مِنۡهَا زَوۡجَهَا وَبَثَّ
مِنۡهُمَا رِجَالٗا كَثِيرٗا وَنِسَآءٗۚ وَٱتَّقُواْ ٱللَّهَ

ٱلَّذِى تَسَآءَلُونَ بِهِۦ وَٱلْأَرْحَامَ ۚ إِنَّ ٱللَّهَ
كَانَ عَلَيْكُمْ رَقِيبًا ﴿١﴾

មកក្នុងនាមអល់ឡោះ ហើយត្រូវផ្សារភ្ជាប់ញាតិសន្តាន។ ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកឃ្លាំមើលពួកអ្នក។

وَءَاتُوا۟ ٱلْيَتَٰمَىٰٓ أَمْوَٰلَهُمْ ۖ وَلَا تَتَبَدَّلُوا۟ ٱلْخَبِيثَ
بِٱلطَّيِّبِ ۖ وَلَا تَأْكُلُوٓا۟ أَمْوَٰلَهُمْ إِلَىٰٓ أَمْوَٰلِكُمْ ۚ
إِنَّهُۥ كَانَ حُوبًا كَبِيرًا ﴿٢﴾

២-ចូរពួកអ្នកប្រគល់ឱ្យក្មេងកំព្រាទាំងនោះនូវទ្រព្យសម្បត្តិរបស់ពួកគេ។ ហើយកុំប្តូររបស់ដែលអាក្រក់ដោយរបស់ដែលល្អ(របស់ក្មេងកំព្រា)ឱ្យសោះ។ ហើយចូរពួកអ្នកកុំស៊ីទ្រព្យសម្បត្តិរបស់ពួកគេដោយលាយឡំជាមួយទ្រព្យសម្បត្តិរបស់ពួកអ្នក។ ពិតប្រាកដណាស់ វាគឺជាបាបកម្មដ៏ធំធេងបំផុត។

وَإِنْ خِفْتُمْ أَلَّا تُقْسِطُوا۟ فِى ٱلْيَتَٰمَىٰ فَٱنكِحُوا۟
مَا طَابَ لَكُم مِّنَ ٱلنِّسَآءِ مَثْنَىٰ وَثُلَٰثَ وَرُبَٰعَ ۖ
فَإِنْ خِفْتُمْ أَلَّا تَعْدِلُوا۟ فَوَٰحِدَةً أَوْ مَا مَلَكَتْ
أَيْمَٰنُكُمْ ۚ ذَٰلِكَ أَدْنَىٰٓ أَلَّا تَعُولُوا۟ ﴿٣﴾

៣-ហើយប្រសិនបើពួកអ្នកខ្លាចក្រែងមិនអាចផ្តល់ភាពយុត្តិធម៌ចំពោះក្មេងកំព្រា[1] បាននោះ ចូរពួកអ្នករៀបអាពាហ៍ពិពាហ៍ជាមួយនារីណាដែលជាទីពេញចិត្តសម្រាប់ពួកអ្នកចំនួនពីរ ឬបី ឬបួននាក់។ តែប្រសិនបើពួកអ្នកមិនអាចផ្តល់ភាពយុត្តិធម៌(ដល់ពួកនាង)បាននោះ ចូរពួកអ្នករៀបការតែម្នាក់ ឬ(រួមរស់ជាមួយ)ស្ត្រីបម្រើជាច់ថ្លៃរបស់ពួកអ្នក។ នេះគឺជាការប្រសើរបំផុតដើម្បីការពារពួកអ្នកពីការប្រព្រឹត្តអំពើអយុត្តិធម៌។

وَءَاتُوا۟ ٱلنِّسَآءَ صَدُقَٰتِهِنَّ نِحْلَةً ۚ فَإِن طِبْنَ لَكُمْ
عَن شَىْءٍ مِّنْهُ نَفْسًا فَكُلُوهُ هَنِيٓـًٔا مَّرِيٓـًٔا ﴿٤﴾

៤-ហើយចូរពួកអ្នកផ្តល់ឱ្យពួកស្ត្រីទាំងនោះនូវខាន់ស្លារបស់ពួកនាងដែលជាកាតព្វកិច្ច។ តែប្រសិនបើពួកនាងរីករាយនឹងប្រគល់ភាគខ្លះនៃខាន់ស្លានោះមកឱ្យពួកអ្នក ចូរពួកអ្នកទទួលយកវាដោយរីករាយដោយគ្មានការភ័យខ្លាចប៉ះពាល់(ច្បាប់អ៊ីស្លាម)ឡើយ។

وَلَا تُؤْتُوا۟ ٱلسُّفَهَآءَ أَمْوَٰلَكُمُ ٱلَّتِى جَعَلَ ٱللَّهُ
لَكُمْ قِيَٰمًا وَٱرْزُقُوهُمْ فِيهَا وَٱكْسُوهُمْ وَقُولُوا۟
لَهُمْ قَوْلًا مَّعْرُوفًا ﴿٥﴾

៥-ហើយចូរពួកអ្នកកុំផ្តល់ឱ្យពួកដែលខ្ជះខ្ជាយនូវទ្រព្យសម្បត្តិរបស់ពួកអ្នកដែលអល់ឡោះបានឱ្យពួកអ្នកគ្រប់គ្រងវា។ ហើយចូរពួកអ្នកផ្តល់ការហូបចុក និងការស្លៀកពាក់ដល់ពួកគេអំពីទ្រព្យសម្បត្តិទាំងនោះ ហើយចូរពួកអ្នកនិយាយទៅកាន់ពួកគេនូវពាក្យសំដីដែលល្អប្រពៃ។

وَٱبْتَلُوا۟ ٱلْيَتَٰمَىٰ حَتَّىٰٓ إِذَا بَلَغُوا۟ ٱلنِّكَاحَ فَإِنْ
ءَانَسْتُم مِّنْهُمْ رُشْدًا فَٱدْفَعُوٓا۟ إِلَيْهِمْ أَمْوَٰلَهُمْ ۖ

៦-ហើយចូរពួកអ្នកសាកល្បងបញ្ញាក្មេងកំព្រាទាំងនោះរហូតដល់ពួកគេគ្រប់វ័យរៀបការ។ ហើយប្រសិនបើពួកអ្នកដឹងអំពីការឈ្លាសវៃរបស់ពួកគេ ចូរពួកអ្នកប្រគល់ឱ្យពួកគេនូវទ្រព្យសម្បត្តិ

១-ក្មេងស្រីកំព្រាដែលរស់នៅក្រោមការគ្រប់គ្រងរបស់ពួកអ្នកដែលពួកអ្នកមិនអាចផ្តល់ប្រាក់ខាន់ស្លាបាន ចូរបោះបង់ពួកនាងចុះ។

របស់ពួកគេ ។ ហើយចូរពួកអ្នកកុំយកទ្រព្យសម្បត្តិនោះដោយបំពាន និងឆ្លៀតឱកាសមុននឹងពួកគេធំដឹងក្តី ។ ហើយអ្នកណា( អាណាព្យាបាល) ដែលធូរធា ចូរឱ្យគេចៀសវាង( អំពីការយកទ្រព្យសម្បត្តិនោះ) តែបើអ្នកណាដែលក្រីក្រ ចូរឱ្យគេយកតាមចំនួនដែលសមហេតុផល ។ ហើយនៅពេលដែលពួកអ្នកប្រគល់ឱ្យពួកគេនូវទ្រព្យសម្បត្តិរបស់ពួកគេនោះ ចូរពួកអ្នករកអ្នកធ្វើសាក្សីឱ្យពួកគេផង ។ គ្រប់គ្រាន់ហើយអល់ឡោះជាអ្នកជំនុំជំរះ ។

៧-សម្រាប់បុរសគឺទទួលបានចំណែកអំពីកេរមរតកដែលឪពុកម្តាយនិងសាច់សាលោហិតបានបន្សល់ទុក ។ ហើយសម្រាប់ស្ត្រីក៏ទទួលបានចំណែកពីកេរមរតកដែលឪពុកម្តាយ និងសាច់សាលោហិតបានបន្សល់ទុកដែរ ទោះបីជាកេរមរតកនោះតិចឬច្រើនក៏ដោយ ។ វាជាចំណែកដែលបានកំណត់ ។

៨-បើកាលណាសាច់សាលោហិត( នៃសព) និងអ្នកក្រីក្រ ហើយនិងក្មេងកំព្រាបានចូលរួមក្នុងការបែងចែកកេរមរតកនោះ ចូរពួកអ្នកផ្តល់ឱ្យពួកគេមួយចំនួននៃកេរមរតកនោះ( មុនបែងចែក) ហើយចូរពួកអ្នកនិយាយទៅកាន់ពួកគេនូវពាក្យសំដីដែលល្អប្រពៃ ។

៩-ហើយចូរឱ្យបណ្តាអាណាព្យាបាល( របស់កូនកំព្រា) កោតខ្លាចអល់ឡោះ បើសិនជាពួកគេបានបន្សល់ទុកនូវកូនចៅតូចៗនៅពីក្រោយពួកគេដែលពួកគេតែងតែបារម្ភចំពោះកូនៗរបស់ពួកគេ ។ ដូច្នេះចូរឱ្យពួកគេកោតខ្លាចអល់ឡោះ និងត្រូវនិយាយនូវពាក្យសំដីដ៏ត្រឹមត្រូវ ។

១០-ពិតប្រាកដណាស់ពួកដែលស៊ីទ្រព្យសម្បត្តិក្មេងកំព្រាដោយបំពាន គឺពួកគេកំពុងតែស៊ីភ្លើងចូលទៅក្នុងពោះរបស់ពួកគេ ហើយពួកគេនឹងចូលនរកដែលឆេះសន្ធោសន្ធៅ ។

១១-អល់ឡោះបញ្ជាឱ្យពួកអ្នកធ្វើការបែងចែកទ្រព្យសម្បត្តិទាក់ទងនឹងកូនចៅរបស់ពួកអ្នក( បន្ទាប់ពីពួកអ្នកទទួលមរណភាព) គឺសម្រាប់កូនប្រុសម្នាក់ស្មើនឹងចំណែកកូនស្រីពីរនាក់ ។ តែប្រសិន

وَلَا تَأۡكُلُوهَآ إِسۡرَافٗا وَبِدَارًا أَن يَكۡبَرُواْۚ
وَمَن كَانَ غَنِيّٗا فَلۡيَسۡتَعۡفِفۡۖ وَمَن كَانَ
فَقِيرٗا فَلۡيَأۡكُلۡ بِٱلۡمَعۡرُوفِۚ فَإِذَا دَفَعۡتُمۡ
إِلَيۡهِمۡ أَمۡوَٰلَهُمۡ فَأَشۡهِدُواْ عَلَيۡهِمۡۚ وَكَفَىٰ
بِٱللَّهِ حَسِيبٗا ٦

لِّلرِّجَالِ نَصِيبٞ مِّمَّا تَرَكَ ٱلۡوَٰلِدَانِ
وَٱلۡأَقۡرَبُونَ وَلِلنِّسَآءِ نَصِيبٞ مِّمَّا تَرَكَ
ٱلۡوَٰلِدَانِ وَٱلۡأَقۡرَبُونَ مِمَّا قَلَّ مِنۡهُ
أَوۡ كَثُرَۚ نَصِيبٗا مَّفۡرُوضٗا ٧

وَإِذَا حَضَرَ ٱلۡقِسۡمَةَ أُوْلُواْ ٱلۡقُرۡبَىٰ وَٱلۡيَتَٰمَىٰ
وَٱلۡمَسَٰكِينُ فَٱرۡزُقُوهُم مِّنۡهُ وَقُولُواْ لَهُمۡ
قَوۡلٗا مَّعۡرُوفٗا ٨

وَلۡيَخۡشَ ٱلَّذِينَ لَوۡ تَرَكُواْ مِنۡ خَلۡفِهِمۡ
ذُرِّيَّةٗ ضِعَٰفًا خَافُواْ عَلَيۡهِمۡ فَلۡيَتَّقُواْ ٱللَّهَ
وَلۡيَقُولُواْ قَوۡلٗا سَدِيدًا ٩

إِنَّ ٱلَّذِينَ يَأۡكُلُونَ أَمۡوَٰلَ ٱلۡيَتَٰمَىٰ ظُلۡمًا
إِنَّمَا يَأۡكُلُونَ فِي بُطُونِهِمۡ نَارٗاۖ
وَسَيَصۡلَوۡنَ سَعِيرٗا ١٠

يُوصِيكُمُ ٱللَّهُ فِيٓ أَوۡلَٰدِكُمۡۖ لِلذَّكَرِ مِثۡلُ
حَظِّ ٱلۡأُنثَيَيۡنِۚ فَإِن كُنَّ نِسَآءٗ فَوۡقَ ٱثۡنَتَيۡنِ

فَلَهُنَّ ثُلُثَا مَا تَرَكَ ۖ وَإِن كَانَتْ وَٰحِدَةً فَلَهَا
ٱلنِّصْفُ ۚ وَلِأَبَوَيْهِ لِكُلِّ وَٰحِدٍ مِّنْهُمَا
ٱلسُّدُسُ مِمَّا تَرَكَ إِن كَانَ لَهُۥ وَلَدٌ ۚ فَإِن لَّمْ
يَكُن لَّهُۥ وَلَدٌ وَوَرِثَهُۥٓ أَبَوَاهُ فَلِأُمِّهِ ٱلثُّلُثُ ۚ فَإِن
كَانَ لَهُۥٓ إِخْوَةٌ فَلِأُمِّهِ ٱلسُّدُسُ ۚ مِنۢ بَعْدِ
وَصِيَّةٍ يُوصِى بِهَآ أَوْ دَيْنٍ ۗ ءَابَآؤُكُمْ وَأَبْنَآؤُكُمْ
لَا تَدْرُونَ أَيُّهُمْ أَقْرَبُ لَكُمْ نَفْعًا ۚ فَرِيضَةً
مِّنَ ٱللَّهِ ۗ إِنَّ ٱللَّهَ كَانَ عَلِيمًا حَكِيمًا ﴿١١﴾

បើសពមានតែកូនស្រីចាប់ពីពីរនាក់ឡើងទៅ គឺពួកនាងទទួលបានពីរភាគបីនៃមរតកនោះ ។ ហើយប្រសិនបើសពមានតែកូនស្រីម្នាក់ គឺនាង ទទួលបានពាក់កណ្ដាល ។ ហើយចំពោះឪពុកម្ដាយនៃសពវិញ ម្នាក់ៗត្រូវទទួលបានមួយភាគប្រាំមួយនៃមរតក ប្រសិនបើសពនោះមានកូន ។ តែប្រសិនបើសពនោះគ្មានកូនទេគឺ ឪពុកម្ដាយជាអ្នកទទួលមរតកនោះទាំងស្រុង ដោយម្ដាយសពទទួលបានមួយភាគបី ។ តែ ប្រសិនបើសពនោះមានបងប្អូនចាប់ពីពីរនាក់ឡើង គឺម្ដាយសពទទួលបានមួយភាគប្រាំមួយបន្ទាប់ពីដកបណ្ដាំមរតករបស់សព ឬបន្ទាប់ពីសងបំណុលរួច ។ ឪពុកម្ដាយរបស់ពួកអ្នកនិងកូនៗរបស់ពួកអ្នក ពួកអ្នកមិនបានដឹងទេថា តើគេមួយណាដែលមានប្រយោជន៍ច្រើនសម្រាប់ពួកអ្នក ។ (ទាំងនេះ) ជាកាតព្វកិច្ចមកពីអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

۞ وَلَكُمْ نِصْفُ مَا تَرَكَ أَزْوَٰجُكُمْ إِن لَّمْ
يَكُن لَّهُنَّ وَلَدٌ ۚ فَإِن كَانَ لَهُنَّ وَلَدٌ
فَلَكُمُ ٱلرُّبُعُ مِمَّا تَرَكْنَ ۚ مِنۢ بَعْدِ وَصِيَّةٍ
يُوصِينَ بِهَآ أَوْ دَيْنٍ ۚ وَلَهُنَّ ٱلرُّبُعُ
مِمَّا تَرَكْتُمْ إِن لَّمْ يَكُن لَّكُمْ وَلَدٌ ۚ فَإِن
كَانَ لَكُمْ وَلَدٌ فَلَهُنَّ ٱلثُّمُنُ مِمَّا
تَرَكْتُم ۚ مِّنۢ بَعْدِ وَصِيَّةٍ تُوصُونَ بِهَآ
أَوْ دَيْنٍ ۗ وَإِن كَانَ رَجُلٌ يُورَثُ كَلَٰلَةً
أَوِ ٱمْرَأَةٌ وَلَهُۥٓ أَخٌ أَوْ أُخْتٌ فَلِكُلِّ وَٰحِدٍ
مِّنْهُمَا ٱلسُّدُسُ ۚ فَإِن كَانُوٓا۟ أَكْثَرَ مِن

១២-ហើយសម្រាប់ពួកអ្នក(ជាប្ដី) ត្រូវទទួលបានពាក់កណ្ដាលនៃមរតកដែលបណ្ដាភរិយារបស់ពួកអ្នកបានបន្សល់ទុក ប្រសិនបើពួកនាងគ្មានកូន[1] ។ តែបើពួកនាងមានកូនវិញ គឺពួកអ្នកទទួលបានមួយភាគបួនពីមរតកដែលពួកនាងបានបន្សល់ទុក បន្ទាប់ពីដកបណ្ដាំមរតកដែលពួកនាង(សព) ផ្ដែផ្ដាំ ឬសងបំណុលរួច ។ រីឯពួកនាង(ជាភរិយា) វិញត្រូវទទួលបានមួយភាគបួនពីមរតកដែលពួកអ្នក(ប្ដី) បានបន្សល់ទុក ប្រសិនបើពួកអ្នកគ្មានកូនទេនោះ ។ តែបើពួកអ្នកមានកូនវិញ គឺពួកនាងទទួលបានមួយភាគប្រាំបីប៉ុណ្ណោះពីមរតកដែលពួកអ្នកបានបន្សល់ទុកបន្ទាប់ពីបណ្ដាំមរតកដែលពួកអ្នក(សព) ផ្ដែផ្ដាំ ឬសងបំណុលរួច ។ ដោយឡែកបុរសឬស្ដ្រី(សព) ដែលគ្មានកូនគ្មានឪពុក តែគាត់មានបងប្អូនប្រុសម្នាក់ ឬបងប្អូនស្រីម្នាក់[2] គឺគេម្នាក់ៗទទួលបានមួយភាគប្រាំមួយ ។ តែបើពួកគេមានចំនួនលើសពីនោះ(លើសពីម្នាក់) គឺពួកគេទទួលបានមួយភាគបីរួមគ្នាបន្ទាប់ពី

១-ពាក្យ"កូន"នៅក្នុងភាសាមរតកគឺមានន័យថា កូនប្រុសស្រីរបស់សាកសព ឬកូនប្រុសស្រីរបស់កូនប្រុសសាកសព និងចៅប្រុសស្រីដែលមានឋានៈបន្តបន្ទាប់ទៅក្រោមរបស់សព ។

២-បងប្អូនម្ដាយជាមួយឪពុកដទៃទោះប្រុសក្ដីស្រីក្ដីត្រូវទទួលមរតកស្មើគ្នា ម្នាក់ត្រូវទទួលចំណែកមួយភាគប្រាំមួយ បើចាប់ពីពីរនាក់ឡើងទៅគឺត្រូវទទួលចំណែកមួយភាគបីរួមគ្នា នេះបើគ្រប់លក្ខខណ្ឌដែលត្រូវទទួលចំណែកនោះ ។

ذَٰلِكَ فَهُمْ شُرَكَآءُ فِي ٱلثُّلُثِۚ مِنۢ بَعْدِ
وَصِيَّةٍ يُوصَىٰ بِهَآ أَوْ دَيْنٍ غَيْرَ مُضَآرٍّۚ وَصِيَّةً
مِّنَ ٱللَّهِۗ وَٱللَّهُ عَلِيمٌ حَلِيمٌ ١٢

ដកបណ្តាំមរតករបស់សពឬសងបំណុលរួចដោយគ្មានការប៉ះពាល់តង្កិច (លើអ្នកទទួលមរតក) ឡើយ ។ (ទាំងនេះ) ជាបញ្ញាមកពីអល់ឡោះ ។ អល់ឡោះមហាដឹង មហាអត់ធ្មត់ ។

تِلْكَ حُدُودُ ٱللَّهِۚ وَمَن يُطِعِ ٱللَّهَ
وَرَسُولَهُۥ يُدْخِلْهُ جَنَّٰتٍ تَجْرِي مِن
تَحْتِهَا ٱلْأَنْهَٰرُ خَٰلِدِينَ فِيهَاۚ وَذَٰلِكَ
ٱلْفَوْزُ ٱلْعَظِيمُ ١٣

១៣-ទាំងនេះគឺជាច្បាប់របស់អល់ឡោះ ។ អ្នកណាដែលប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ អល់ឡោះនឹងបញ្ចូលគេទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេនៅក្នុងនោះជាអមតៈ ។ ហើយនោះគឺជាជោគជ័យមួយដ៏ធំធេង ។

وَمَن يَعْصِ ٱللَّهَ وَرَسُولَهُۥ وَيَتَعَدَّ حُدُودَهُۥ
يُدْخِلْهُ نَارًا خَٰلِدًا فِيهَا وَلَهُۥ عَذَابٌ
مُّهِينٌ ١٤

១៤-ផ្ទុយទៅវិញអ្នកណាដែលប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ដោយបំពានទៅលើក្រិត្យច្បាប់របស់ទ្រង់ អល់ឡោះនឹងបញ្ចូលគេទៅក្នុងឋាននរក ដោយគេនៅក្នុងនោះជាអមតៈ ហើយគេនឹងទទួលទារុណកម្មយ៉ាងអាម៉ាស់បំផុត ។

وَٱلَّٰتِي يَأْتِينَ ٱلْفَٰحِشَةَ مِن نِّسَآئِكُمْ
فَٱسْتَشْهِدُواْ عَلَيْهِنَّ أَرْبَعَةً مِّنكُمْۖ
فَإِن شَهِدُواْ فَأَمْسِكُوهُنَّ فِي ٱلْبُيُوتِ
حَتَّىٰ يَتَوَفَّىٰهُنَّ ٱلْمَوْتُ أَوْ يَجْعَلَ ٱللَّهُ لَهُنَّ
سَبِيلًا ١٥

១៥-ហើយស្ត្រីដែលប្រព្រឹត្តអំពើអសីលធម៌ (ហ្ស៊ីណា) ក្នុងចំណោមស្ត្រីៗរបស់ពួកអ្នក ចូរពួកអ្នកស្វែងរកសាក្សីបួននាក់ជាបុរសក្នុងចំណោមពួកអ្នកដើម្បីធ្វើសាក្សីលើពួកនាង ។ បន្ទាប់មកបើពួកគេព្រមធ្វើសាក្សីហើយនោះ ចូរពួកអ្នកឃុំខ្លួនពួកនាងក្នុងផ្ទះរហូតដល់ស្លាប់ ឬរហូតដល់អល់ឡោះបើកផ្លូវឱ្យពួកនាង[១] ។

وَٱلَّذَانِ يَأْتِيَٰنِهَا مِنكُمْ فَـَٔاذُوهُمَاۖ فَإِن
تَابَا وَأَصْلَحَا فَأَعْرِضُواْ عَنْهُمَآۗ إِنَّ ٱللَّهَ
كَانَ تَوَّابًا رَّحِيمًا ١٦

១៦-ហើយបុរសនិងស្ត្រីក្នុងចំណោមពួកដែលប្រព្រឹត្តអំពើអសីលធម៌ (ហ្ស៊ីណា) ចូរពួកអ្នកដាក់ទោសគេទាំងពីរ តែបើគេទាំងពីរ សារភាពកំហុសចំពោះអល់ឡោះ និងកែខ្លួនវិញនោះ ចូរពួកអ្នកលើកលែងឱ្យគេទាំងពីរចុះ ។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកទទួលការសារភាពទោសកំហុស ជាអ្នកអាណិតស្រឡាញ់បំផុត ។

---

១-អល់ឡោះបានលុបក្រឹត្យច្បាប់ពីវាក្យខណ្ឌនេះ ពោលគឺច្បាប់នេះមិនអនុញ្ញាតឱ្យធ្វើដូចនេះទៀតទេ ។ អ្នកនាំសាររបស់ឡោះបានពោលថា: ចូរពួកអ្នកទទួលយកច្បាប់ពីខ្ញុំ អល់ឡោះបានបើកផ្លូវសម្រាប់ពួកនាងហើយ គឺអ្នកនៅលីវត្រូវវាយ១០០រំពាត់ និងជម្លៀសចេញពីភូមិស្រុករយៈពេលមួយឆ្នាំ ហើយបើធ្លាប់មានប្តីឬប្រពន្ធស្របច្បាប់រួច គឺត្រូវគប់នឹងដុំថ្មរហូតដល់ស្លាប់ ។

١٧-ជាការពិតណាស់ ការទទួលសារភាពកំហុសនោះជាតួនាទីរបស់អល់ឡោះ សម្រាប់ពួកដែលធ្វើអំពើអាក្រក់ដោយភាពល្ងង់ខ្លៅ បន្ទាប់មកពួកគេសារភាពកំហុសភ្លាមៗ ពួកទាំងនោះត្រូវបានអល់ឡោះទទួលយកការសារភាពកំហុសរបស់ពួកគេ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

إِنَّمَا ٱلتَّوۡبَةُ عَلَى ٱللَّهِ لِلَّذِينَ يَعۡمَلُونَ ٱلسُّوٓءَ بِجَهَٰلَةٖ ثُمَّ يَتُوبُونَ مِن قَرِيبٖ فَأُوْلَٰٓئِكَ يَتُوبُ ٱللَّهُ عَلَيۡهِمۡۗ وَكَانَ ٱللَّهُ عَلِيمًا حَكِيمٗا ﴿١٧﴾

១៨-ផ្ទុយទៅវិញការទទួលសារភាពកំហុសនោះមិនមែនសម្រាប់ពួកដែលប្រព្រឹត្តអំពើអាក្រក់ រហូតនៅពេលដែលសេចក្តីស្លាប់ចូលមកដល់ទើបនិយាយថា ខ្ញុំសូមសារភាពកំហុសហើយឥឡូវនេះ ហើយក៏មិនសម្រាប់ពួកដែលស្លាប់ក្នុងសភាពជាអ្នកប្រឆាំងដែរ។ ពួកទាំងនោះគឺយើងបានត្រៀមសម្រាប់ពួកគេនូវទារុណកម្មដ៏សែនឈឺចាប់។

وَلَيۡسَتِ ٱلتَّوۡبَةُ لِلَّذِينَ يَعۡمَلُونَ ٱلسَّيِّـَٔاتِ حَتَّىٰٓ إِذَا حَضَرَ أَحَدَهُمُ ٱلۡمَوۡتُ قَالَ إِنِّي تُبۡتُ ٱلۡـَٰٔنَ وَلَا ٱلَّذِينَ يَمُوتُونَ وَهُمۡ كُفَّارٌۚ أُوْلَٰٓئِكَ أَعۡتَدۡنَا لَهُمۡ عَذَابًا أَلِيمٗا ﴿١٨﴾

១៩-ឱបណ្តាអ្នកមានជំនឿ! គេមិនអនុញ្ញាតឱ្យពួកអ្នកយកស្ត្រី(ដែលប្តីស្លាប់ចោល)ធ្វើជាមរតកដោយបង្ខិតបង្ខំឡើយ។ ពួកអ្នក(ប្តី)មិនត្រូវរារាំងស្ត្រី(ប្រពន្ធ)ទាំងនោះ ដើម្បីពួកអ្នកទាញចំណេញពីខាន់ស្លាដែលពួកអ្នកផ្តល់ឱ្យពួកនាងៗនោះឡើយ លើកលែងតែពួកនាងប្រព្រឹត្តអំពើអាក្រក់(ហ្ស៊ីណា)ជាក់ស្តែង។ ចូរពួកអ្នករួមរស់ជាមួយពួកនាងដោយគុណធម៌។ ប្រសិនបើពួកអ្នកមិនពេញចិត្តពួកនាង(ចូរអត់ធ្មត់) ជួនកាលការមិនពេញចិត្តរបស់ពួកអ្នកលើអ្វីមួយនោះ អល់ឡោះអាចនឹងធ្វើឱ្យវាល្អប្រសើរលើសលប់វិញ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا يَحِلُّ لَكُمۡ أَن تَرِثُواْ ٱلنِّسَآءَ كَرۡهٗاۖ وَلَا تَعۡضُلُوهُنَّ لِتَذۡهَبُواْ بِبَعۡضِ مَآ ءَاتَيۡتُمُوهُنَّ إِلَّآ أَن يَأۡتِينَ بِفَٰحِشَةٖ مُّبَيِّنَةٖۚ وَعَاشِرُوهُنَّ بِٱلۡمَعۡرُوفِۚ فَإِن كَرِهۡتُمُوهُنَّ فَعَسَىٰٓ أَن تَكۡرَهُواْ شَيۡـٔٗا وَيَجۡعَلَ ٱللَّهُ فِيهِ خَيۡرٗا كَثِيرٗا ﴿١٩﴾

២០-ហើយបើពួកអ្នកមានបំណងផ្លាស់ប្តូរប្រពន្ធ ដោយយកប្រពន្ធផ្សេងទៀត ហើយពួកអ្នកបានផ្តល់ទ្រព្យសម្បត្តិជាច្រើន(ខាន់ស្លា)ទៅឱ្យប្រពន្ធណាមួយហើយនោះ គឺពួកអ្នកមិនត្រូវយកវាមកវិញបន្តិចឡើយ។ តើពួកអ្នកយកវាមកវិញដោយបំពាន និងបាបកម្មយ៉ាងពិតប្រាកដឬ?

وَإِنۡ أَرَدتُّمُ ٱسۡتِبۡدَالَ زَوۡجٖ مَّكَانَ زَوۡجٖ وَءَاتَيۡتُمۡ إِحۡدَىٰهُنَّ قِنطَارٗا فَلَا تَأۡخُذُواْ مِنۡهُ شَيۡـًٔاۚ أَتَأۡخُذُونَهُۥ بُهۡتَٰنٗا وَإِثۡمٗا مُّبِينٗا ﴿٢٠﴾

២១-តើពួកអ្នកយកវា(ខាន់ស្លា)មកវិញយ៉ាងដូចម្តេច បើពួកអ្នកធ្លាប់បានរួមរក័ជាមួយគ្នាហើយនោះ? ហើយពួកនាងបានទទួលយកពីពួកអ្នកនូវកិច្ចសន្យាយ៉ាងម៉ឺងម៉ាត់។

وَكَيۡفَ تَأۡخُذُونَهُۥ وَقَدۡ أَفۡضَىٰ بَعۡضُكُمۡ إِلَىٰ بَعۡضٖ وَأَخَذۡنَ مِنكُم مِّيثَٰقًا غَلِيظٗا ﴿٢١﴾

២២-ហើយពួកអ្នកមិនត្រូវរៀបការនឹងស្ត្រីដែលឪពុករបស់ពួកអ្នកបានរៀបការនោះទេ លើកលែងតែអ្វីដែលបានកន្លងផុតទៅ (មុនពេលបម្រាម)ប៉ុណ្ណោះ ។ ពិតប្រាកដណាស់ វាគឺជាទង្វើស្មោកគ្រោកមួយ និងទទួលការខឹងសម្បា(ពីអល់ឡោះ) និងជាមាគ៌ាមួយដ៏អាក្រក់បំផុត ។

وَلَا تَنكِحُوا۟ مَا نَكَحَ ءَابَآؤُكُم مِّنَ
ٱلنِّسَآءِ إِلَّا مَا قَدْ سَلَفَ ۚ إِنَّهُۥ كَانَ فَٰحِشَةً
وَمَقْتًا وَسَآءَ سَبِيلًا ٢٢

២៣-អល់ឡោះបានហាមឃាត់ពួកអ្នកមិនឱ្យរៀបការជាមួយម្តាយរបស់ពួកអ្នក កូនស្រីរបស់ពួកអ្នក បងប្អូនស្រីរបស់ពួកអ្នក ម្តាយមីងខាងឪពុករបស់ពួកអ្នក ម្តាយមីងខាងម្តាយរបស់ពួកអ្នក កូនស្រីរបស់បងប្អូនប្រុសរបស់ពួកអ្នក កូនស្រីរបស់បងប្អូនស្រីរបស់ពួកអ្នក មេដោះរបស់ពួកអ្នក បងប្អូនស្រីពីការបៅដោះតែមួយជាមួយពួកអ្នក ម្តាយក្មេករបស់ពួកអ្នក និងកូនស្រីចុងដែលនៅក្រោមការគ្រប់គ្រងរបស់ពួកអ្នក ជាកូនស្រីរបស់ប្រពន្ធដែលពួកអ្នកបានរួមរ័កជាមួយនាង ។ តែបើពួកអ្នកមិនទាន់បានរួមរ័កជាមួយនាង (ប្រពន្ធ)ទេ (ហើយបានលែងលះគ្នារួច) គឺគ្មានបញ្ហាសម្រាប់ពួកអ្នកឡើយ(ក្នុងការរៀបការជាមួយកូនចុងនោះ) ។ និង(បម្រាមទៀត) ប្រពន្ធកូនបង្កើតរបស់ពួកអ្នក(កូនប្រសាស្រី) ហើយពួកអ្នកមិនត្រូវរៀបការរួមជាមួយស្ត្រីពីរនាក់ដែលជាបងប្អូនបង្កើតនឹងគ្នាឡើយ លើកលែងតែអ្វីដែលបានកន្លងផុតទៅ(មុនពេលបម្រាម)ប៉ុណ្ណោះ ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោសមហាអាណិតស្រឡាញ់ ។

حُرِّمَتْ عَلَيْكُمْ أُمَّهَٰتُكُمْ وَبَنَاتُكُمْ
وَأَخَوَٰتُكُمْ وَعَمَّٰتُكُمْ وَخَٰلَٰتُكُمْ وَبَنَاتُ
ٱلْأَخِ وَبَنَاتُ ٱلْأُخْتِ وَأُمَّهَٰتُكُمُ ٱلَّٰتِىٓ
أَرْضَعْنَكُمْ وَأَخَوَٰتُكُم مِّنَ ٱلرَّضَٰعَةِ
وَأُمَّهَٰتُ نِسَآئِكُمْ وَرَبَٰٓئِبُكُمُ ٱلَّٰتِى فِى
حُجُورِكُم مِّن نِّسَآئِكُمُ ٱلَّٰتِى دَخَلْتُم بِهِنَّ
فَإِن لَّمْ تَكُونُوا۟ دَخَلْتُم بِهِنَّ فَلَا جُنَاحَ
عَلَيْكُمْ وَحَلَٰٓئِلُ أَبْنَآئِكُمُ ٱلَّذِينَ مِنْ
أَصْلَٰبِكُمْ وَأَن تَجْمَعُوا۟ بَيْنَ ٱلْأُخْتَيْنِ
إِلَّا مَا قَدْ سَلَفَ ۗ إِنَّ ٱللَّهَ كَانَ غَفُورًا
رَّحِيمًا ٢٣

២៤-ហើយ(អល់ឡោះបានបម្រាមផងដែរ ក្នុងការរៀបការនឹង) ស្ត្រីនៅមានប្តី លើកលែងតែស្ត្រីនោះជាជ័យភណ្ឌរបស់ពួកអ្នក ។ (ទាំងនោះ)ជាការកំណត់របស់អល់ឡោះចំពោះពួកអ្នក ។ ហើយអល់ឡោះបានអនុញ្ញាតសម្រាប់ពួកអ្នកអ្វីដែលផ្សេងពីនោះ ដើម្បីឱ្យពួកអ្នកស្វែងរកស្ត្រីដោយទ្រព្យសម្បត្តិរបស់ពួកអ្នក ដើម្បីរៀបការគឺពុំមែនដើម្បីរួមរ័កខុសច្បាប់នោះឡើយ ។ បើពួកអ្នកបានរួមរ័កជាមួយពួកនាងដោយសារការរៀបការស្របច្បាប់នោះ ដូច្នេះចូរពួកអ្នកផ្តល់ឱ្យពួកនាងនូវខាន់ស្លារបស់ពួកនាងជាការចាំបាច់ ។ ហើយគ្មានទោសពៃរ៍ចំពោះពួកអ្នកទេនូវអ្វីដែលពួកអ្នកបានឯក-

۞ وَٱلْمُحْصَنَٰتُ مِنَ ٱلنِّسَآءِ إِلَّا مَا مَلَكَتْ
أَيْمَٰنُكُمْ ۖ كِتَٰبَ ٱللَّهِ عَلَيْكُمْ ۚ وَأُحِلَّ لَكُم
مَّا وَرَآءَ ذَٰلِكُمْ أَن تَبْتَغُوا۟ بِأَمْوَٰلِكُم
مُّحْصِنِينَ غَيْرَ مُسَٰفِحِينَ ۚ فَمَا ٱسْتَمْتَعْتُم
بِهِۦ مِنْهُنَّ فَـَٔاتُوهُنَّ أُجُورَهُنَّ فَرِيضَةً ۚ وَلَا
جُنَاحَ عَلَيْكُمْ فِيمَا تَرَٰضَيْتُم بِهِۦ مِنۢ بَعْدِ
ٱلْفَرِيضَةِ ۚ إِنَّ ٱللَّهَ كَانَ عَلِيمًا حَكِيمًا ٢٤

ភាពគ្មានឹងវា( ខាន់ស្លា) បន្ទាប់ពីបានកំណត់រួចក៏ដោយ ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

២៥-ហើយអ្នកណាមួយក្នុងចំណោមពួកអ្នកគ្មានប្រាក់គ្រប់គ្រាន់ ដើម្បីរៀបការជាមួយស្ត្រីដែលមានសេរីភាព និងមានជំនឿទេនោះ គឺពួកអ្នកអាចរៀបការជាមួយអ្នកបម្រើដាច់ថ្លៃរបស់ពួកអ្នកដែលជាស្ត្រីមានជំនឿ ។ អល់ឡោះដឹងបំផុតពីជំនឿរបស់ពួកអ្នក ដោយពួកអ្នកមកពីអំបូរតែមួយ( អាដាំ) ។ ដូច្នេះចូរពួកអ្នករៀបការជាមួយពួកនាង( ស្រីបម្រើដែលមានជំនឿ) ដោយមានការអនុញ្ញាតពីអាណាព្យាបាលរបស់ពួកនាង ហើយចូរផ្តល់ឱ្យពួកនាងនូវខាន់ស្លារបស់ពួកនាងដោយសមរម្យជាស្ត្រីស្អាតស្អំ ដែលពុំមែនជាស្ត្រីពេស្យា និងពុំមែនជាស្ត្រីដែលមានសាហាយស្មន់ឡើយ ។ ហើយក្រោយពេលដែលពួកនាងបានរៀបការរួច ប្រសិនបើពួកនាងបានប្រព្រឹត្តអំពើអសីលធម៌នោះ ពួកនាងនឹងទទួលនូវទណ្ឌកម្មពាក់កណ្តាលនៃទណ្ឌកម្មរបស់ស្ត្រីដែលមានសេរីភាព ។ ( ការអនុញ្ញាតឱ្យរៀបការជាមួយស្ត្រីបម្រើបែបនេះ) គឺសម្រាប់អ្នកដែលខ្លាចធ្លាក់ខ្លួនក្នុងការប្រព្រឹត្តអំពើខុសច្បាប់( ហ្ស៊ីណា) ក្នុងចំណោមពួកអ្នក ។ តែការអត់ធ្មត់វាប្រសើរសម្រាប់ពួកអ្នក ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَمَن لَّمۡ يَسۡتَطِعۡ مِنكُمۡ طَوۡلًا أَن يَنكِحَ
ٱلۡمُحۡصَنَٰتِ ٱلۡمُؤۡمِنَٰتِ فَمِن مَّا مَلَكَتۡ
أَيۡمَٰنُكُم مِّن فَتَيَٰتِكُمُ ٱلۡمُؤۡمِنَٰتِۚ وَٱللَّهُ أَعۡلَمُ
بِإِيمَٰنِكُمۚ بَعۡضُكُم مِّنۢ بَعۡضٖۚ فَٱنكِحُوهُنَّ
بِإِذۡنِ أَهۡلِهِنَّ وَءَاتُوهُنَّ أُجُورَهُنَّ
بِٱلۡمَعۡرُوفِ مُحۡصَنَٰتٍ غَيۡرَ مُسَٰفِحَٰتٖ وَلَا
مُتَّخِذَٰتِ أَخۡدَانٖۚ فَإِذَآ أُحۡصِنَّ فَإِنۡ
أَتَيۡنَ بِفَٰحِشَةٖ فَعَلَيۡهِنَّ نِصۡفُ مَا عَلَى
ٱلۡمُحۡصَنَٰتِ مِنَ ٱلۡعَذَابِۚ ذَٰلِكَ لِمَنۡ
خَشِيَ ٱلۡعَنَتَ مِنكُمۡۚ وَأَن تَصۡبِرُواْ خَيۡرٞ لَّكُمۡۗ
وَٱللَّهُ غَفُورٞ رَّحِيمٞ ٢٥

២៦-អល់ឡោះចង់បញ្ជាក់ប្រាប់ពួកអ្នក និងចង្អុលបង្ហាញដល់ពួកអ្នកនូវមាគ៌ារបស់ពួកដែលមុនពួកអ្នក ហើយទ្រង់ចង់ទទួលយកការសារភាពកំហុសរបស់ពួកអ្នក ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

يُرِيدُ ٱللَّهُ لِيُبَيِّنَ لَكُمۡ وَيَهۡدِيَكُمۡ سُنَنَ ٱلَّذِينَ
مِن قَبۡلِكُمۡ وَيَتُوبَ عَلَيۡكُمۡۗ وَٱللَّهُ عَلِيمٌ
حَكِيمٞ ٢٦

២៧-ហើយអល់ឡោះចង់ទទួលយកការសារភាពកំហុសរបស់ពួកអ្នក តែពួកដែលដើរតាមទំនើងចិត្តវិញ ចង់ឱ្យពួកអ្នកងាកចេញ( ពីសាសនា) យ៉ាងឆ្ងាយបំផុត ។

وَٱللَّهُ يُرِيدُ أَن يَتُوبَ عَلَيۡكُمۡ وَيُرِيدُ
ٱلَّذِينَ يَتَّبِعُونَ ٱلشَّهَوَٰتِ أَن تَمِيلُواْ مَيۡلًا
عَظِيمٗا ٢٧

២៨-អល់ឡោះចង់បន្ធូរបន្ថយ( បន្ទុក) ដល់ពួកអ្នកព្រោះមនុស្សលោកត្រូវបានគេបង្កើតមកដោយមានភាពទន់ខ្សោយ ។

يُرِيدُ ٱللَّهُ أَن يُخَفِّفَ عَنكُمۡۚ وَخُلِقَ ٱلۡإِنسَٰنُ
ضَعِيفٗا ٢٨

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَأۡكُلُوٓاْ أَمۡوَٰلَكُم بَيۡنَكُم بِٱلۡبَٰطِلِ إِلَّآ أَن تَكُونَ تِجَٰرَةً عَن تَرَاضٖ مِّنكُمۡۚ وَلَا تَقۡتُلُوٓاْ أَنفُسَكُمۡۚ إِنَّ ٱللَّهَ كَانَ بِكُمۡ رَحِيمٗا ﴿٢٩﴾

២៩-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំស៊ីទ្រព្យសម្បត្តិគ្នាឯងដោយផ្លូវខុសឱ្យសោះ លើកលែងតែការធ្វើជំនួញដែលមានការឯកភាពគ្នាទាំងសងខាងប៉ុណ្ណោះ។ ហើយចូរពួកអ្នកកុំសម្លាប់ខ្លួនឯង(ឬសម្លាប់អ្នកដទៃ)ឱ្យសោះ។ ពិតប្រាកដណាស់ អល់ឡោះអាណិតស្រឡាញ់បំផុតចំពោះពួកអ្នក។

وَمَن يَفۡعَلۡ ذَٰلِكَ عُدۡوَٰنٗا وَظُلۡمٗا فَسَوۡفَ نُصۡلِيهِ نَارٗاۚ وَكَانَ ذَٰلِكَ عَلَى ٱللَّهِ يَسِيرًا ﴿٣٠﴾

៣០-ហើយអ្នកណាធ្វើដូច្នោះ(បំពានលើបម្រាមខាងលើ) ដោយការរំលោភបំពាននិងអយុត្តិធម៌ យើងនឹងបញ្ចូលគេទៅក្នុងភ្លើងនរក។ ហើយនេះគឺជាការងាយស្រួលបំផុតសម្រាប់អល់ឡោះ។

إِن تَجۡتَنِبُواْ كَبَآئِرَ مَا تُنۡهَوۡنَ عَنۡهُ نُكَفِّرۡ عَنكُمۡ سَيِّـَٔاتِكُمۡ وَنُدۡخِلۡكُم مُّدۡخَلٗا كَرِيمٗا ﴿٣١﴾

៣១-ប្រសិនបើពួកអ្នកចៀសផុតពីបាបកម្មធំៗ ដែលគេហាមឃាត់ពួកអ្នកមិនឱ្យធ្វើវា យើងនឹងលុបបំបាត់នូវកំហុសតូចៗរបស់ពួកអ្នក ហើយយើងនឹងបញ្ចូលពួកអ្នកទៅកន្លែងមួយដ៏ឧត្តុង្គឧត្តម(ឋានសួគ៌)។

وَلَا تَتَمَنَّوۡاْ مَا فَضَّلَ ٱللَّهُ بِهِۦ بَعۡضَكُمۡ عَلَىٰ بَعۡضٖۚ لِّلرِّجَالِ نَصِيبٞ مِّمَّا ٱكۡتَسَبُواْۖ وَلِلنِّسَآءِ نَصِيبٞ مِّمَّا ٱكۡتَسَبۡنَۚ وَسۡـَٔلُواْ ٱللَّهَ مِن فَضۡلِهِۦٓۚ إِنَّ ٱللَّهَ كَانَ بِكُلِّ شَيۡءٍ عَلِيمٗا ﴿٣٢﴾

៣២-ចូរពួកអ្នកកុំទទូចចង់បានដូចអ្វីដែលអល់ឡោះបានប្រទានឱ្យអ្នកខ្លះក្នុងចំណោមពួកអ្នក។ សម្រាប់បុរសៗនឹងទទួលផលពីអ្វីដែលពួកគេបានសាង ហើយសម្រាប់ស្ត្រីៗក៏នឹងទទួលផលពីអ្វីដែលពួកនាងបានសាងដែរ។ ចូរពួកអ្នកសុំពីអល់ឡោះនូវការសន្តោសប្រណីរបស់ទ្រង់។ ពិតប្រាកដណាស់ អល់ឡោះដឹងបំផុតនូវអ្វីៗទាំងអស់។

وَلِكُلّٖ جَعَلۡنَا مَوَٰلِيَ مِمَّا تَرَكَ ٱلۡوَٰلِدَانِ وَٱلۡأَقۡرَبُونَۚ وَٱلَّذِينَ عَقَدَتۡ أَيۡمَٰنُكُمۡ فَـَٔاتُوهُمۡ نَصِيبَهُمۡۚ إِنَّ ٱللَّهَ كَانَ عَلَىٰ كُلِّ شَيۡءٖ شَهِيدًا ﴿٣٣﴾

៣៣-គ្រប់ៗរូបយើងបានបង្កើតឱ្យមានអ្នកស្នងសម្រាប់ទទួលមរតកពីឪពុកម្តាយ សាច់សាលោហិតដែលបានបន្សល់ទុក។ ហើយអ្នកដែលពួកអ្នកបានស្បថសច្ចាជាមួយពួកគេ[1] ចូរផ្តល់ឱ្យពួកគេនូវចំណែករបស់ពួកគេ។ ពិតប្រាកដណាស់ អល់ឡោះជាសាក្សីលើអ្វីៗទាំងអស់។

ٱلرِّجَالُ قَوَّٰمُونَ عَلَى ٱلنِّسَآءِ بِمَا فَضَّلَ

៣៤-បុរសទាំងឡាយជាអ្នកគ្រប់គ្រងលើពួកស្ត្រីដោយសារ

---

១-កាលពីជំនាន់មុនអ៊ីស្លាមដែលមូហាំម៉ាត់បាននាំមក មនុស្សតែងតែធ្វើសច្ចាជាមួយគ្នាក្នុងការទទួលមរតកពីគ្នាទៅវិញទៅមក លុះពេលដែលមូហាំម៉ាត់បាននាំអ៊ីស្លាមមកដល់ ច្បាប់នោះត្រូវអល់ឡោះលុបចោលវិញ។

ٱللَّهُ بَعْضَهُمْ عَلَىٰ بَعْضٍ وَبِمَآ أَنفَقُوا۟ مِنْ
أَمْوَٰلِهِمْ ۚ فَٱلصَّٰلِحَٰتُ قَٰنِتَٰتٌ حَٰفِظَٰتٌ
لِّلْغَيْبِ بِمَا حَفِظَ ٱللَّهُ ۚ وَٱلَّٰتِى تَخَافُونَ
نُشُوزَهُنَّ فَعِظُوهُنَّ وَٱهْجُرُوهُنَّ فِى
ٱلْمَضَاجِعِ وَٱضْرِبُوهُنَّ ۖ فَإِنْ أَطَعْنَكُمْ فَلَا
تَبْغُوا۟ عَلَيْهِنَّ سَبِيلًا ۗ إِنَّ ٱللَّهَ كَانَ عَلِيًّا
كَبِيرًا ﴿٣٤﴾

អល់ឡោះបានលើកតម្កើងពួកគេឱ្យមានលក្ខណៈពិសេសជាងគ្នា និងដោយសារតែបុរសមានភារកិច្ចផ្គត់ផ្គង់ទ្រព្យសម្បត្តិរបស់ពួកគេ (ដល់ប្រពន្ធ) ។ ស្ត្រីគ្រប់លក្ខណ៏នោះគឺជាស្ត្រីដែលគោរពប្រតិបត្តិ (ចំពោះអល់ឡោះ) ជាស្ត្រីដែលថែរក្សាអ្វីៗពេលប្តីមិននៅ ព្រោះអល់ឡោះបានថែរក្សាពួកនាង ។ ដោយឡែកស្ត្រីដែលពួកអ្នក(ប្តី) បារម្ភនូវការមិនគោរពរបស់ពួកនាង(ចំពោះប្តី)នោះ ចូរពួកអ្នកដាស់តឿនពួកនាង(បើគ្មានប្រសិទ្ធភាពទេ) ចូរពួកអ្នកចាកចេញពីកន្លែងគេងរបស់ពួកនាង(បើនៅតែគ្មានប្រសិទ្ធភាពទៀត) ចូរវាយអប់រំពួកនាង ។ តែប្រសិនបើពួកនាងងាកមកគោរពតាមពួកអ្នកវិញ ដូច្នេះចូរពួកអ្នកកុំរកផ្លូវធ្វើឱ្យលំបាកដល់ពួកនាងទៀតឱ្យសោះ ។ ពិតប្រាកដណាស់ អល់ឡោះមហាខ្ពង់ខ្ពស់ មហាធំធេង ។

وَإِنْ خِفْتُمْ شِقَاقَ بَيْنِهِمَا فَٱبْعَثُوا۟ حَكَمًا
مِّنْ أَهْلِهِۦ وَحَكَمًا مِّنْ أَهْلِهَآ إِن يُرِيدَآ
إِصْلَٰحًا يُوَفِّقِ ٱللَّهُ بَيْنَهُمَآ ۗ إِنَّ ٱللَّهَ كَانَ
عَلِيمًا خَبِيرًا ﴿٣٥﴾

៣៥-ហើយប្រសិនបើពួកអ្នកបារម្ភខ្លាចមានការបែកបាក់រវាងអ្នកទាំងពីរ(ប្តីប្រពន្ធ) ដូច្នេះចូរពួកអ្នកបញ្ជូនអ្នកសម្របសំរួលម្នាក់ពីសាច់ញាតិខាងប្រុស និងអ្នកសម្របសម្រួលម្នាក់ទៀតពីសាច់ញាតិខាងស្រី បើអ្នកសម្របសម្រួលទាំងពីរនោះចង់ផ្សះផ្សា អល់ឡោះនឹងផ្សះផ្សាររវាងប្តីប្រពន្ធគេទាំងពីរ ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹង មហាជ្រួតជ្រាប ។

۞ وَٱعْبُدُوا۟ ٱللَّهَ وَلَا تُشْرِكُوا۟ بِهِۦ شَيْـًٔا ۖ
وَبِٱلْوَٰلِدَيْنِ إِحْسَٰنًا وَبِذِى ٱلْقُرْبَىٰ وَٱلْيَتَٰمَىٰ
وَٱلْمَسَٰكِينِ وَٱلْجَارِ ذِى ٱلْقُرْبَىٰ وَٱلْجَارِ
ٱلْجُنُبِ وَٱلصَّاحِبِ بِٱلْجَنۢبِ وَٱبْنِ ٱلسَّبِيلِ
وَمَا مَلَكَتْ أَيْمَٰنُكُمْ ۗ إِنَّ ٱللَّهَ لَا يُحِبُّ مَن
كَانَ مُخْتَالًا فَخُورًا ﴿٣٦﴾

៣៦-ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ ហើយកុំធ្វើស្ហ៊ីរិកនឹងទ្រង់នូវអ្វីមួយជាដាច់ខាត ។ ហើយចូរធ្វើល្អចំពោះឪពុកម្តាយ សាច់សាលោហិត កូនកំព្រា អ្នកក្រ អ្នកជិតខាងដែលជាសាច់ញាតិ និងអ្នកជិតខាងដែលមិនមែនជាសាច់ញាតិ និងអ្នករួមដំណើរជាមួយគ្នា ហើយនិងអ្នកធ្វើដំណើរដាច់ស្បៀង ព្រមទាំងទាសាទាសីរបស់ពួកអ្នក ។ ពិតប្រាកដណាស់ អល់ឡោះមិនស្រឡាញ់អ្នកដែលអួតក្អេងក្អាងឡើយ ។

ٱلَّذِينَ يَبْخَلُونَ وَيَأْمُرُونَ ٱلنَّاسَ بِٱلْبُخْلِ
وَيَكْتُمُونَ مَآ ءَاتَىٰهُمُ ٱللَّهُ مِن فَضْلِهِۦ ۗ
وَأَعْتَدْنَا لِلْكَٰفِرِينَ عَذَابًا مُّهِينًا ﴿٣٧﴾

៣៧-ពួកដែលកំណាញ់ ហើយពួកគេប្រើមនុស្សឱ្យកំណាញ់ ព្រមទាំងលាក់បាំងនូវអ្វីដែលអល់ឡោះបានប្រទានដល់ពួកគេអំពីការប្រោសប្រទាន(លាភសក្ការៈ)របស់ទ្រង់ ។ យើងបានរៀបចំសម្រាប់ពួកដែលប្រឆាំងនូវទារុណកម្មដ៏អាម៉ាស់បំផុត ។

وَٱلَّذِينَ يُنفِقُونَ أَمْوَٰلَهُمْ رِئَآءَ ٱلنَّاسِ وَلَا
يُؤْمِنُونَ بِٱللَّهِ وَلَا بِٱلْيَوْمِ ٱلْءَاخِرِ ۗ وَمَن
يَكُنِ ٱلشَّيْطَٰنُ لَهُۥ قَرِينًا فَسَآءَ قَرِينًا ﴿٣٨﴾

៣៨-ហើយពួកដែលបរិច្ចាគទ្រព្យសម្បត្តិរបស់គេ ដើម្បីឱ្យមនុស្សមើលឃើញ ហើយពួកគេគ្មានជំនឿចំពោះអល់ឡោះនិងថ្ងៃបរលោកឡើយ ។ អ្នកណាហើយយកស្ហៃតនធ្វើជាមិត្តភក្តិរបស់គេ ស្ហៃតននោះគឺជាមិត្តភក្តិដ៏អាក្រក់បំផុត ។

وَمَاذَا عَلَيْهِمْ لَوْ ءَامَنُوا۟ بِٱللَّهِ وَٱلْيَوْمِ ٱلْءَاخِرِ
وَأَنفَقُوا۟ مِمَّا رَزَقَهُمُ ٱللَّهُ ۚ وَكَانَ ٱللَّهُ بِهِمْ
عَلِيمًا ﴿٣٩﴾

៣៩-តើមានគ្រោះថ្នាក់អ្វីដល់ពួកគេ ប្រសិនបើពួកគេជឿលើអល់ឡោះ និងថ្ងៃបរលោក ហើយនិងបរិច្ចាគទ្រព្យសម្បត្តិខ្លះដែលអល់ឡោះបានប្រទានឱ្យពួកគេនោះ? អល់ឡោះមហាដឹងចំពោះពួកគេ ។

إِنَّ ٱللَّهَ لَا يَظْلِمُ مِثْقَالَ ذَرَّةٍ ۖ وَإِن تَكُ
حَسَنَةً يُضَٰعِفْهَا وَيُؤْتِ مِن لَّدُنْهُ أَجْرًا
عَظِيمًا ﴿٤٠﴾

៤០-ពិតប្រាកដណាស់ អល់ឡោះមិនបំពានអ្នកណាម្នាក់ឡើយ សូម្បីតែតូចប៉ុនលំអងធូលីក៏ដោយ ។ ហើយប្រសិនបើទង្វើដ៏តូចនោះជាអំពើល្អ ទ្រង់នឹងបង្កើនវា និងប្រទានផលបុណ្យដ៏ធំធេងពីទ្រង់ ។

فَكَيْفَ إِذَا جِئْنَا مِن كُلِّ أُمَّةٍۭ بِشَهِيدٍ وَجِئْنَا
بِكَ عَلَىٰ هَٰٓؤُلَآءِ شَهِيدًا ﴿٤١﴾

៤១-តើ(ស្ថានភាពរបស់មនុស្សនៅថ្ងៃបរលោក)ដូចម្ដេចទៅ នៅពេលដែលយើងនាំសាក្សី(អ្នកនាំសាររបស់ពួកគេ)មកកាន់មនុស្សគ្រប់ជំនាន់ ហើយយើងនាំអ្នក(មូហាំម៉ាត់)មកធ្វើជាសាក្សីលើពួកគេទាំងនោះ ?

يَوْمَئِذٍ يَوَدُّ ٱلَّذِينَ كَفَرُوا۟ وَعَصَوُا۟ ٱلرَّسُولَ
لَوْ تُسَوَّىٰ بِهِمُ ٱلْأَرْضُ وَلَا يَكْتُمُونَ ٱللَّهَ
حَدِيثًا ﴿٤٢﴾

៤២-នៅថ្ងៃនោះ(ថ្ងៃបរលោក) ពួកដែលប្រឆាំង និងមិនគោរពតាមអ្នកនាំសារមានបំណងចង់ឱ្យផែនដីលេបពួកគេឱ្យបាត់ តែពួកគេមិនអាចលាក់បាំងអ្វីមួយពីអល់ឡោះបានឡើយ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ لَا تَقْرَبُوا۟ ٱلصَّلَوٰةَ وَأَنتُمْ
سُكَٰرَىٰ حَتَّىٰ تَعْلَمُوا۟ مَا تَقُولُونَ وَلَا جُنُبًا
إِلَّا عَابِرِى سَبِيلٍ حَتَّىٰ تَغْتَسِلُوا۟ ۚ وَإِن كُنتُم
مَّرْضَىٰٓ أَوْ عَلَىٰ سَفَرٍ أَوْ جَآءَ أَحَدٌ مِّنكُم مِّنَ
ٱلْغَآئِطِ أَوْ لَٰمَسْتُمُ ٱلنِّسَآءَ فَلَمْ تَجِدُوا۟ مَآءً

៤៣-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំសឡាត ខណៈដែលពួកអ្នកកំពុងស្រវឹងឱ្យសោះ ទាល់តែពួកអ្នកដឹងនូវអ្វីដែលពួកអ្នកកំពុងនិយាយ ។ ហើយចំពោះអ្នកមានជូនុប[1] ក៏មិនត្រូវទៅសឡាត (ឬចូលម៉ាស្ជិទ)ដែរ ទាល់តែពួកអ្នកងូតទឹកសំអាតរួចប៉ុន្តែពួកអ្នកអាចឆ្លងកាត់បាន ។ ហើយប្រសិនបើពួកអ្នកមានជំងឺ ឬស្ថិតនៅក្នុងការធ្វើដំណើរ ឬនរណាម្នាក់ក្នុងចំណោមពួកអ្នកបាន

---

១-ជូនុប : វិធីទាំងឡាយណាដែលនាំឱ្យចេញទឹកកាម ដូចជាតាមការរួមរ័ក ឬយល់សប្តិ...។

فَتَيَمَّمُواْ صَعِيدًا طَيِّبًا فَٱمۡسَحُواْ بِوُجُوهِكُمۡ
وَأَيۡدِيكُمۡۗ إِنَّ ٱللَّهَ كَانَ عَفُوًّا غَفُورًا ﴿٤٣﴾

បន្ទោបង់ ឬពួកអ្នកបានរួមរ័កជាមួយភរិយា ហើយពួកអ្នកមិនអាចរកទឹកបានទេនោះ ចូរពួកអ្នកតាយ៉ាំមុំដោយប្រើដីស្អាត ហើយត្រូវជូតមុខ និងដៃរបស់ពួកអ្នក។ ពិតប្រាកដណាស់ អល់ឡោះមហាអធ្យាស្រ័យ មហាអភ័យទោស។

أَلَمۡ تَرَ إِلَى ٱلَّذِينَ أُوتُواْ نَصِيبًا مِّنَ
ٱلۡكِتَٰبِ يَشۡتَرُونَ ٱلضَّلَٰلَةَ وَيُرِيدُونَ أَن
تَضِلُّواْ ٱلسَّبِيلَ ﴿٤٤﴾

៤៤-តើអ្នក(មូហាំម៉ាត់)មិនបានឃើញទេឬ ពួកដែលអល់ឡោះបានផ្ដល់(ចំណេះដឹង)មួយចំណែកអំពីគម្ពីរ(តាវរ៉ត)នោះ? ដោយពួកគេផ្លាស់ប្ដូរ(ពីការចង្អុលបង្ហាញ)យកការវង្វេង និងចង់ឱ្យពួកអ្នកវង្វេងចេញពីមាគ៌ា(ដ៏ត្រឹមត្រូវ)។

وَٱللَّهُ أَعۡلَمُ بِأَعۡدَآئِكُمۡۚ وَكَفَىٰ بِٱللَّهِ وَلِيًّا وَكَفَىٰ
بِٱللَّهِ نَصِيرًا ﴿٤٥﴾

៤៥-ហើយអល់ឡោះដឹងបំផុតពីស្ថានភាពសត្រូវរបស់ពួកអ្នក។ ដូច្នេះ គ្រប់គ្រាន់ហើយដែលអល់ឡោះជាអ្នកគាំពារពួកអ្នក ហើយក៏គ្រប់គ្រាន់ដែរដែលអល់ឡោះជាអ្នកជួយពួកអ្នក។

مِّنَ ٱلَّذِينَ هَادُواْ يُحَرِّفُونَ ٱلۡكَلِمَ عَن
مَّوَاضِعِهِۦ وَيَقُولُونَ سَمِعۡنَا وَعَصَيۡنَا وَٱسۡمَعۡ
غَيۡرَ مُسۡمَعٖ وَرَٰعِنَا لَيَّۢا بِأَلۡسِنَتِهِمۡ وَطَعۡنًا فِي
ٱلدِّينِۚ وَلَوۡ أَنَّهُمۡ قَالُواْ سَمِعۡنَا وَأَطَعۡنَا وَٱسۡمَعۡ
وَٱنظُرۡنَا لَكَانَ خَيۡرًا لَّهُمۡ وَأَقۡوَمَ وَلَٰكِن لَّعَنَهُمُ
ٱللَّهُ بِكُفۡرِهِمۡ فَلَا يُؤۡمِنُونَ إِلَّا قَلِيلًا ﴿٤٦﴾

៤៦-នៅក្នុងចំណោមពួកយ៉ាហ៊ូទីមានអ្នកខ្លះកែប្រែបន្ទូលរបស់អល់ឡោះឱ្យខុសពីកន្លែងរបស់វា ហើយពួកគេនិយាយថាៈ ពួកយើងបានស្ដាប់ឮហើយ តែពួកយើងមិនគោរពតាម ហើយចូរអ្នក(មូហាំម៉ាត់)ស្ដាប់ពួកយើងដោយអ្នកមិនស្ដាប់ឮអ្វីៗទាំងអស់ ហើយ(ពួកគេនិយាយពាក្យថា)"រ៉អ៊ីណា"[1] ដោយមិនដាច់ពីមាត់សោះ គឺដើម្បីបង្ខូចសាសនាអ៊ិស្លាម។ តែប្រសិនបើពួកគេនិយាយថាៈ ពួកយើងបានស្ដាប់ឮនិងគោរពតាម ហើយសូមអ្នក(មូហាំម៉ាត់)ស្ដាប់ និងថែរក្សាពួកយើងផងនោះ គឺជាការប្រសើរបំផុតសម្រាប់ពួកគេ និងជាពាក្យដែលត្រឹមត្រូវបំផុត។ ក៏ប៉ុន្តែអល់ឡោះបានដាក់បណ្ដាសាពួកគេដោយសារតែការប្រឆាំងរបស់ពួកគេ ហេតុនេះពួកគេគ្មានជំនឿឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ។

يَٰٓأَيُّهَا ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ ءَامِنُواْ بِمَا
نَزَّلۡنَا مُصَدِّقٗا لِّمَا مَعَكُم مِّن قَبۡلِ أَن

៤៧-ឱបណ្ដាអ្នកដែលគេបានផ្ដល់គម្ពីរឱ្យ! ចូរពួកអ្នកជឿនឹងអ្វីដែលយើងបានបញ្ចុះ(គម្ពីរគួរអាន) ដើម្បីជាការបញ្ជាក់នូវគម្ពីរដែលមាននៅជាមួយពួកអ្នក មុនពេលដែលយើងបំផ្លាញមុខ(របស់

១-"រ៉អ៊ីណា : មានន័យថា សូមអ្នកថែរក្សាពួកយើង។ ពួកយ៉ាហ៊ូទីប្រើពាក្យ"រ៉អ៊ីណានេះសម្រាប់ការជេរប្រមាថមាក់ងាយចំពោះណាពី។

نَّطْمِسَ وُجُوهًا فَنَرُدَّهَا عَلَىٰٓ أَدْبَارِهَآ أَوْ
نَلْعَنَهُمْ كَمَا لَعَنَّآ أَصْحَـٰبَ ٱلسَّبْتِ ۚ وَكَانَ أَمْرُ
ٱللَّهِ مَفْعُولًا ﴿٤٧﴾

ពួកអ្នក) និងបង្វិលវាទៅខាងក្រោយខ្នង ឬយើងដាក់បណ្តាសាពួកគេ ដូចដែលយើងបានដាក់បណ្តាសាចំពោះក្រុមដែលបានបំពាននៅថ្ងៃសៅរ៍។ ហើយបទបញ្ជារបស់អល់ឡោះនឹងត្រូវបានអនុវត្ត។

إِنَّ ٱللَّهَ لَا يَغْفِرُ أَن يُشْرَكَ بِهِۦ وَيَغْفِرُ مَا دُونَ
ذَٰلِكَ لِمَن يَشَآءُ ۚ وَمَن يُشْرِكْ بِٱللَّهِ فَقَدِ
ٱفْتَرَىٰٓ إِثْمًا عَظِيمًا ﴿٤٨﴾

៤៨-ពិតប្រាកដណាស់ អល់ឡោះមិនអភ័យទោសឱ្យអ្នកដែលធ្វើស្ហ៊ីរិកចំពោះទ្រង់នោះឡើយ តែទ្រង់នឹងអភ័យទោសឱ្យចំពោះបាបកម្មផ្សេងពីនោះចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយអ្នកណាធ្វើស្ហ៊ីរិកចំពោះអល់ឡោះ គឺគេពិតជាបានប្រព្រឹត្តបាបកម្មមួយដ៏ធ្ងន់ធ្ងរ។

أَلَمْ تَرَ إِلَى ٱلَّذِينَ يُزَكُّونَ أَنفُسَهُم ۚ بَلِ ٱللَّهُ
يُزَكِّى مَن يَشَآءُ وَلَا يُظْلَمُونَ فَتِيلًا ﴿٤٩﴾

៤៩-តើអ្នក(មូហាំម៉ាត់)មិនបានឃើញទេឬ ពួកដែលអះអាងថាខ្លួនជាអ្នកស្អាតស្អំនោះ? តាមពិតមានតែអល់ឡោះទេដែលជាអ្នកសំអាត(បាបកម្ម)អ្នកណាដែលទ្រង់មានចេតនា។ ហើយពួកគេនឹងមិនត្រូវគេបំពានបន្តិចណាឡើយ។

ٱنظُرْ كَيْفَ يَفْتَرُونَ عَلَى ٱللَّهِ ٱلْكَذِبَ ۖ وَكَفَىٰ
بِهِۦٓ إِثْمًا مُّبِينًا ﴿٥٠﴾

៥០-ចូរអ្នកមើលចុះ តើពួកគេ(ពួកយ៉ាហ៊ូទី)ប្រឌិតរឿងភូតកុហកចំពោះអល់ឡោះយ៉ាងដូចម្តេចខ្លះ? គ្រប់គ្រាន់ហើយទង្វើនោះជាបាបកម្មដ៏ច្បាស់លាស់។

أَلَمْ تَرَ إِلَى ٱلَّذِينَ أُوتُوا۟ نَصِيبًا مِّنَ
ٱلْكِتَـٰبِ يُؤْمِنُونَ بِٱلْجِبْتِ وَٱلطَّـٰغُوتِ
وَيَقُولُونَ لِلَّذِينَ كَفَرُوا۟ هَـٰٓؤُلَآءِ أَهْدَىٰ مِنَ
ٱلَّذِينَ ءَامَنُوا۟ سَبِيلًا ﴿٥١﴾

៥១-តើអ្នក(មូហាំម៉ាត់)មិនបានឃើញទេឬ ពួកដែលអល់ឡោះបានផ្តល់(ចំណេះដឹង)មួយចំណែកអំពីគម្ពីរ(តាវរ៉ត)ដោយពួកគេជឿចំពោះជិពទី និងតហ្គូត[1]ទៅវិញនោះ? ហើយពួកគេនិយាយទៅកាន់ពួកដែលប្រឆាំង(អារ៉ាប់គូរ៉ស្ហ)ថាៈ ពួកនេះស្ថិតនៅលើមាគ៌ាដ៏ត្រឹមត្រូវជាងបណ្តាអ្នកមានជំនឿ។

أُو۟لَـٰٓئِكَ ٱلَّذِينَ لَعَنَهُمُ ٱللَّهُ ۖ وَمَن يَلْعَنِ ٱللَّهُ فَلَن
تَجِدَ لَهُۥ نَصِيرًا ﴿٥٢﴾

៥២-ពួកទាំងនោះ គឺជាពួកដែលអល់ឡោះបានដាក់បណ្តាសាពួកគេ។ ហើយអ្នកណាដែលអល់ឡោះដាក់បណ្តាសានោះ គឺអ្នក(មូហាំម៉ាត់)នឹងមិនអាចមានអ្នកជួយសម្រាប់គេឡើយ។

أَمْ لَهُمْ نَصِيبٌ مِّنَ ٱلْمُلْكِ فَإِذًا لَّا يُؤْتُونَ

៥៣- ឬមួយពួកគេមានកម្មសិទ្ធិគ្រប់គ្រងមួយចំណែក? ប្រសិនបើដូច្នោះ ពួកគេនឹងមិនផ្តល់ឱ្យមនុស្សលោកសូម្បីតែបន្តិច

---

១-ជិពទី និង តហ្គូត គឺជាឈ្មោះសំដៅទៅលើអ្វីដែលត្រូវគេគោរពសក្ការៈផ្សេងពីអល់ឡោះ។

បន្តិចក៏ដោយ ។

៥៤-ឬមួយក៏ពួកគេច្រណែនឈ្នានីសនឹងមនុស្សដទៃចំពោះអ្វីដែលអល់ឡោះបានប្រទានឱ្យពួកគេ( មូហាំម៉ាត់ និងសហាហ្ពះ) អំពីការប្រោសប្រទានរបស់ទ្រង់? ជាការពិតណាស់ យើងបានប្រទានឱ្យពូជពង្សអ៊ីព្រហ៊ីមនូវគម្ពីរ និងភាពឈ្លាសវៃ ហើយយើងក៏បានប្រទានឱ្យពួកគេនូវអំណាចគ្រប់គ្រងដ៏ធំធេងដែរ ។

៥៥-ដូច្នេះក្នុងចំណោមពួកគេមានអ្នកខ្លះបានជឿនឹងគាត់ ( មូហាំម៉ាត់) និងអ្នកខ្លះទៀតបានងាកចេញពីគាត់ ។ គ្រប់គ្រាន់ហើយ( សម្រាប់ពួកគេ) នរកជើហាន់ណាំដែលឆេះសន្ធោសន្ធៅ ។

៥៦-ពិតប្រាកដណាស់ ពួកដែលប្រឆាំងនឹងបន្ទូលរបស់យើង យើងនឹងបញ្ចូលពួកគេទៅក្នុងភ្លើងនរក ។ រាល់ពេលដែលស្បែករបស់ពួកគេបានឆេះខ្លោចអស់ យើងក៏បានប្តូរស្បែកផ្សេងទៀតឱ្យពួកគេ ដើម្បីឱ្យពួកគេទទួលរសជាតិទារុណកម្ម ។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

៥៧-ចំណែកឯបណ្តាអ្នកដែលមានជំនឿនិងបានសាងអំពើល្អវិញ យើងនឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌ ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេនឹងស្ថិតនៅក្នុងនោះជាអមតៈ ។ នៅក្នុងនោះ ពួកគេមានភរិយាដ៏ស្អាតស្អំជាច្រើន ។ ហើយយើងនឹងបញ្ចូលពួកគេទៅក្នុងម្លប់ដ៏ត្រឈឹងត្រឈៃ( នៅក្នុងឋានសួគ៌) ។

៥៨-ពិតប្រាកដណាស់ អល់ឡោះបញ្ជាពួកអ្នកឱ្យប្រគល់បញ្ញើទាំងឡាយទៅឱ្យម្ចាស់របស់គេវិញ ។ ហើយកាលណាពួកអ្នកកាត់សេចក្តីរវាងមនុស្សលោក ពួកអ្នកត្រូវកាត់សេចក្តីដោយយុត្តិធម៌ ។ ពិតប្រាកដណាស់ ជាការប្រសើរបំផុតដែលអល់ឡោះបានផ្តល់ដំបូន្មានដល់ពួកអ្នក ។ ពិតប្រាកដណាស់អល់ឡោះមហាឮ មហាឃើញ ។

៥៩-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកប្រតិបត្តិតាមអល់ឡោះ និងប្រតិបត្តិតាមអ្នកនាំសារ ហើយនិងមេដឹកនាំរបស់ពួកអ្នក ។ ក្រោយមក ប្រសិនបើពួកអ្នកខ្វែងគំនិតគ្នាអំពីកិច្ចការ

ٱلنَّاسَ نَقِيرًا ﴿٥٣﴾
أَمۡ يَحۡسُدُونَ ٱلنَّاسَ عَلَىٰ مَآ ءَاتَىٰهُمُ ٱللَّهُ مِن
فَضۡلِهِۦۖ فَقَدۡ ءَاتَيۡنَآ ءَالَ إِبۡرَٰهِيمَ ٱلۡكِتَٰبَ
وَٱلۡحِكۡمَةَ وَءَاتَيۡنَٰهُم مُّلۡكًا عَظِيمًا ﴿٥٤﴾
فَمِنۡهُم مَّنۡ ءَامَنَ بِهِۦ وَمِنۡهُم مَّن صَدَّ
عَنۡهُۚ وَكَفَىٰ بِجَهَنَّمَ سَعِيرًا ﴿٥٥﴾
إِنَّ ٱلَّذِينَ كَفَرُواْ بِـَٔايَٰتِنَا سَوۡفَ نُصۡلِيهِمۡ نَارٗا
كُلَّمَا نَضِجَتۡ جُلُودُهُم بَدَّلۡنَٰهُمۡ جُلُودًا
غَيۡرَهَا لِيَذُوقُواْ ٱلۡعَذَابَۗ إِنَّ ٱللَّهَ كَانَ
عَزِيزًا حَكِيمٗا ﴿٥٦﴾
وَٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ
سَنُدۡخِلُهُمۡ جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ
خَٰلِدِينَ فِيهَآ أَبَدٗاۖ لَّهُمۡ فِيهَآ أَزۡوَٰجٞ مُّطَهَّرَةٞۖ
وَنُدۡخِلُهُمۡ ظِلّٗا ظَلِيلًا ﴿٥٧﴾
۞ إِنَّ ٱللَّهَ يَأۡمُرُكُمۡ أَن تُؤَدُّواْ ٱلۡأَمَٰنَٰتِ إِلَىٰٓ
أَهۡلِهَا وَإِذَا حَكَمۡتُم بَيۡنَ ٱلنَّاسِ أَن تَحۡكُمُواْ
بِٱلۡعَدۡلِۚ إِنَّ ٱللَّهَ نِعِمَّا يَعِظُكُم بِهِۦٓۗ إِنَّ ٱللَّهَ
كَانَ سَمِيعَۢا بَصِيرٗا ﴿٥٨﴾
يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ أَطِيعُواْ ٱللَّهَ وَأَطِيعُواْ
ٱلرَّسُولَ وَأُوْلِي ٱلۡأَمۡرِ مِنكُمۡۖ فَإِن تَنَٰزَعۡتُمۡ فِي

شَيۡءٖ فَرُدُّوهُ إِلَى ٱللَّهِ وَٱلرَّسُولِ إِن كُنتُمۡ
تُؤۡمِنُونَ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِۚ ذَٰلِكَ خَيۡرٞ
وَأَحۡسَنُ تَأۡوِيلًا (٥٩)

អ្វីមួយ ចូរពួកអ្នកត្រឡប់ប្រការនោះទៅរកអល់ឡោះ(គម្ពីរគួរអាន) និងអ្នកនាំសារ(ស៊ុណ្ណះ) ប្រសិនបើពួកអ្នកមានជំនឿលើអល់ឡោះ និងថ្ងៃបរលោកមែននោះ។ ការធ្វើដូចនេះ វាជាការប្រសើរបំផុត និងជាការសម្រេចចិត្តចុងក្រោយដ៏ល្អប្រពៃ។

أَلَمۡ تَرَ إِلَى ٱلَّذِينَ يَزۡعُمُونَ أَنَّهُمۡ ءَامَنُواْ
بِمَآ أُنزِلَ إِلَيۡكَ وَمَآ أُنزِلَ مِن قَبۡلِكَ يُرِيدُونَ
أَن يَتَحَاكَمُوٓاْ إِلَى ٱلطَّٰغُوتِ وَقَدۡ أُمِرُوٓاْ أَن
يَكۡفُرُواْ بِهِۦ وَيُرِيدُ ٱلشَّيۡطَٰنُ أَن يُضِلَّهُمۡ
ضَلَٰلَۢا بَعِيدٗا (٦٠)

៦០-តើអ្នក(មូហាំម៉ាត់)មិនបានឃើញទេឬ? ពួក(ពុតត្បុត)ដែលអះអាងថាៈ ពួកគេពិតជាបានជឿចំពោះអ្វីដែលអល់ឡោះបានបញ្ចុះឱ្យអ្នក និងអ្វីដែលទ្រង់បានបញ្ចុះពីមុនអ្នកដោយពួកគេមានបំណងចង់ឱ្យតហ្គូតកាត់សេចក្តីឱ្យខណៈដែលអល់ឡោះបានបញ្ជាពួកគេមិនឱ្យជឿវាឡើយ។ ហើយស្ហៃតនមានបំណងចង់ធ្វើឱ្យពួកគេវង្វេងដែលជាការវង្វេងមួយដ៏សែនឆ្ងាយ។

وَإِذَا قِيلَ لَهُمۡ تَعَالَوۡاْ إِلَىٰ مَآ أَنزَلَ ٱللَّهُ وَإِلَى
ٱلرَّسُولِ رَأَيۡتَ ٱلۡمُنَٰفِقِينَ يَصُدُّونَ عَنكَ
صُدُودٗا (٦١)

៦១-នៅពេលដែលមានគេនិយាយទៅកាន់ពួកគេថាៈ ចូរពួកអ្នកមករកអ្វីដែលអល់ឡោះបានបញ្ចុះ និងមករកអ្នកនាំសារចុះ(ដើម្បីកាត់សេចក្តី) អ្នក(មូហាំម៉ាត់)នឹងឃើញពួកពុតត្បុតទាំងនេះបែរចេញពីអ្នកដោយការស្អប់ខ្ពើម។

فَكَيۡفَ إِذَآ أَصَٰبَتۡهُم مُّصِيبَةُۢ بِمَا قَدَّمَتۡ
أَيۡدِيهِمۡ ثُمَّ جَآءُوكَ يَحۡلِفُونَ بِٱللَّهِ إِنۡ أَرَدۡنَآ
إِلَّآ إِحۡسَٰنٗا وَتَوۡفِيقًا (٦٢)

៦២-តើស្ថានភាពរបស់ពួកគេយ៉ាងដូចម្តេច នៅពេលដែលមានគ្រោះអាក្រក់អ្វីមួយកើតមានចំពោះពួកគេ ដោយសារតែអ្វីដែលដៃរបស់ពួកគេបានប្រព្រឹត្តនោះ? បន្ទាប់មកពួកគេនឹងមករកអ្នក(មូហាំម៉ាត់)ដោយស្បថនឹងអល់ឡោះថាៈ ពួកយើងគ្មានបំណងអ្វីក្រៅពីការផ្សះផ្សា និងធ្វើឱ្យពួកគេត្រូវរូវគ្នាវិញឡើយ។

أُوْلَٰٓئِكَ ٱلَّذِينَ يَعۡلَمُ ٱللَّهُ مَا فِي قُلُوبِهِمۡ
فَأَعۡرِضۡ عَنۡهُمۡ وَعِظۡهُمۡ وَقُل لَّهُمۡ فِيٓ
أَنفُسِهِمۡ قَوۡلَۢا بَلِيغٗا (٦٣)

៦៣-ពួកទាំងនោះហើយដែលអល់ឡោះដឹងនូវអ្វីដែលមានក្នុងចិត្តរបស់ពួកគេ ដូច្នេះចូរអ្នក(មូហាំម៉ាត់)បែរចេញពីពួកគេ(កុំយកទោសពៃរ៍) តែអ្នកត្រូវណែនាំពួកគេ ហើយនិងពោលទៅកាន់ពួកគេនូវពាក្យសំដីណាដែលមានប្រសិទ្ធភាពដល់ខ្លួនពួកគេ។

وَمَآ أَرۡسَلۡنَا مِن رَّسُولٍ إِلَّا لِيُطَاعَ بِإِذۡنِ
ٱللَّهِۚ وَلَوۡ أَنَّهُمۡ إِذ ظَّلَمُوٓاْ أَنفُسَهُمۡ جَآءُوكَ
فَٱسۡتَغۡفَرُواْ ٱللَّهَ وَٱسۡتَغۡفَرَ لَهُمُ ٱلرَّسُولُ

៦៤-យើងមិនបានបញ្ជូនអ្នកនាំសារណាម្នាក់ឡើយ លើកលែងតែដើម្បីឱ្យមនុស្សប្រតិបត្តិតាមគេ ដោយមានការអនុញ្ញាតពីអល់ឡោះប៉ុណ្ណោះ។ ជាការពិតណាស់ ប្រសិនបើនៅពេលដែលពួកគេបានបំពានលើខ្លួនឯងបានមករកអ្នក(មូហាំម៉ាត់) ហើយបាន

لَوَجَدُواْ ٱللَّهَ تَوَّابًا رَّحِيمًا ﴿٦٤﴾

សុំអភ័យទោសពីអល់ឡោះ ហើយអ្នកនាំសារក៏ជួយសុំអភ័យទោសឱ្យពួកគេដែរនោះ ពួកគេពិតជានឹងបានឃើញថា អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

فَلَا وَرَبِّكَ لَا يُؤْمِنُونَ حَتَّىٰ يُحَكِّمُوكَ فِيمَا شَجَرَ بَيْنَهُمْ ثُمَّ لَا يَجِدُواْ فِيٓ أَنفُسِهِمْ حَرَجًا مِّمَّا قَضَيْتَ وَيُسَلِّمُواْ تَسْلِيمًا ﴿٦٥﴾

៦៥-សូមស្បថនឹងម្ចាស់របស់អ្នក! ពួកគេគ្មានជំនឿទេ លុះត្រាតែពួកគេសុំឱ្យអ្នក(មូហាំម៉ាត់)កាត់សេចក្តីចំពោះអ្វីដែលពួកគេបានឈ្លោះទាស់ទែងគ្នា បន្ទាប់មកពួកគេគ្មានការចង្អៀតចង្អល់ក្នុងចិត្តនូវអ្វីដែលអ្នកបានកាត់សេចក្តីឡើយ ហើយទទួលយកដោយពេញចិត្ត។

وَلَوْ أَنَّا كَتَبْنَا عَلَيْهِمْ أَنِ ٱقْتُلُوٓاْ أَنفُسَكُمْ أَوِ ٱخْرُجُواْ مِن دِيَٰرِكُم مَّا فَعَلُوهُ إِلَّا قَلِيلٌ مِّنْهُمْۖ وَلَوْ أَنَّهُمْ فَعَلُواْ مَا يُوعَظُونَ بِهِۦ لَكَانَ خَيْرًا لَّهُمْ وَأَشَدَّ تَثْبِيتًا ﴿٦٦﴾

៦៦-ជាការពិតណាស់ ប្រសិនបើយើងដាក់បទបញ្ជាលើពួកគេ(ពួកពុតត្បុត)ថា: ចូរពួកអ្នកសម្លាប់ខ្លួនឯង(ដើម្បីសារភាពកំហុសដូចអំបូរអ៊ីស្រាអែល)ឬចាកចេញពីលំនៅដ្ឋានរបស់ពួកអ្នកនោះ ពួកគេនឹងមិនធ្វើវាឡើយ លើកលែងតែមួយចំនួនតូចនៃពួកគេប៉ុណ្ណោះ។ ហើយពិតប្រាកដណាស់ ប្រសិនបើពួកគេធ្វើតាមអ្វីដែលគេបានទូន្មាននោះ វាជាការប្រសើរបំផុតសម្រាប់ពួកគេ និងធ្វើឱ្យជំនឿរបស់ពួកគេកាន់តែខ្លាំងថែមទៀត។

وَإِذًا لَّأٓتَيْنَٰهُم مِّن لَّدُنَّآ أَجْرًا عَظِيمًا ﴿٦٧﴾

៦៧-ហើយបើធ្វើដូច្នោះ យើងពិតជានឹងផ្តល់ឱ្យពួកគេនូវផលបុណ្យដ៏ធំធេងពីយើង។

وَلَهَدَيْنَٰهُمْ صِرَٰطًا مُّسْتَقِيمًا ﴿٦٨﴾

៦៨-ហើយយើងនឹងចង្អុលបង្ហាញដល់ពួកគេនូវមាគ៌ាដ៏ត្រឹមត្រូវ។

وَمَن يُطِعِ ٱللَّهَ وَٱلرَّسُولَ فَأُوْلَٰٓئِكَ مَعَ ٱلَّذِينَ أَنْعَمَ ٱللَّهُ عَلَيْهِم مِّنَ ٱلنَّبِيِّـۧنَ وَٱلصِّدِّيقِينَ وَٱلشُّهَدَآءِ وَٱلصَّٰلِحِينَۚ وَحَسُنَ أُوْلَٰٓئِكَ رَفِيقًا ﴿٦٩﴾

៦៩-ហើយអ្នកណាដែលប្រតិបត្តិតាមអល់ឡោះនិងអ្នកនាំសារ គឺពួកគេនឹងស្ថិតនៅជាមួយបណ្តាអ្នកដែលអល់ឡោះបានប្រទាននៀកម៉ាត់ឱ្យពួកគេដូចជាបណ្តាណាពី បណ្តាអ្នកដែលជឿតាមណាពីដ៏ពិតប្រាកដ បណ្តាអ្នកដែលពលីកម្មក្នុងមាគ៌ារបស់អល់ឡោះ និងបណ្តាអ្នកដែលសាងអំពើល្អ។ ហើយអ្នកទាំងនោះគឺជាមិត្តភក្តិដ៏ល្អបំផុត។

ذَٰلِكَ ٱلْفَضْلُ مِنَ ٱللَّهِۚ وَكَفَىٰ بِٱللَّهِ عَلِيمًا ﴿٧٠﴾

៧០-នោះគឺជាការប្រោសប្រទានពីអល់ឡោះ។ គ្រប់គ្រាន់ហើយអល់ឡោះជាអ្នកដែលដឹងបំផុត។

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ خُذُوا۟ حِذْرَكُمْ فَٱنفِرُوا۟ ثُبَاتٍ أَوِ ٱنفِرُوا۟ جَمِيعًا ﴿٧١﴾

៧១-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នករៀបចំខ្លួនរបស់ពួកអ្នកដោយប្រុងប្រយ័ត្ន(ពេលចេញទៅធ្វើសង្គ្រាម) ហើយចូរពួកអ្នកចេញទៅម្តងមួយក្រុម១ ឬចេញទៅទាំងអស់គ្នាតែម្តង។

وَإِنَّ مِنكُمْ لَمَن لَّيُبَطِّئَنَّ فَإِنْ أَصَـٰبَتْكُم مُّصِيبَةٌ قَالَ قَدْ أَنْعَمَ ٱللَّهُ عَلَىَّ إِذْ لَمْ أَكُن مَّعَهُمْ شَهِيدًا ﴿٧٢﴾

៧២-ហើយពិតប្រាកដណាស់ ក្នុងចំណោមពួកអ្នកមានអ្នកបង្អែបង្អង់(មិនចង់ចេញទៅធ្វើសង្គ្រាម) ។ ហើយប្រសិនបើគ្រោះថ្នាក់បានកើតឡើងចំពោះពួកអ្នក(បរាជ័យ ឬត្រូវគេសម្លាប់) គេនឹងនិយាយថាៈ អល់ឡោះពិតជាបានប្រទាននៀកម៉ាត់ដល់ខ្ញុំ ពីព្រោះខ្ញុំមិនបានទៅចូលរួមធ្វើសង្គ្រាមជាមួយពួកគេ។

وَلَئِنْ أَصَـٰبَكُمْ فَضْلٌ مِّنَ ٱللَّهِ لَيَقُولَنَّ كَأَن لَّمْ تَكُنۢ بَيْنَكُمْ وَبَيْنَهُۥ مَوَدَّةٌ يَـٰلَيْتَنِى كُنتُ مَعَهُمْ فَأَفُوزَ فَوْزًا عَظِيمًا ﴿٧٣﴾

៧៣-ប៉ុន្តែបើការប្រោសប្រទានពីអល់ឡោះ(ជោគជ័យ) បានកើតមានចំពោះពួកអ្នកវិញនោះ គេពិតជានិយាយថាៈ ពួកអ្នកហាក់ដូចជាគ្មានទំនាក់ទំនងមិត្តភាពជាមួយនឹងគេអញ្ចឹង។ ខ្ញុំសោកស្តាយណាស់! ប្រសិនបើខ្ញុំនៅជាមួយពួកគេ ខ្ញុំនឹងទទួលបានជោគជ័យដ៏ធំធេងជាមិនខាន។

۞ فَلْيُقَـٰتِلْ فِى سَبِيلِ ٱللَّهِ ٱلَّذِينَ يَشْرُونَ ٱلْحَيَوٰةَ ٱلدُّنْيَا بِٱلْـَٔاخِرَةِ ۚ وَمَن يُقَـٰتِلْ فِى سَبِيلِ ٱللَّهِ فَيُقْتَلْ أَوْ يَغْلِبْ فَسَوْفَ نُؤْتِيهِ أَجْرًا عَظِيمًا ﴿٧٤﴾

៧៤-ដូច្នេះ ចូរឱ្យពួកដែលយកការរស់នៅលើលោកិយប្តូរយកថ្ងៃបរលោកធ្វើសង្គ្រាមក្នុងមាគ៌ារបស់អល់ឡោះ។ ហើយអ្នកណាធ្វើសង្គ្រាមក្នុងមាគ៌ារបស់អល់ឡោះ ហើយត្រូវគេសម្លាប់ ឬទទួលជ័យជំនះ គឺយើងនឹងប្រទានឱ្យគេនូវផលបុណ្យដ៏ធំធេង។

وَمَا لَكُمْ لَا تُقَـٰتِلُونَ فِى سَبِيلِ ٱللَّهِ وَٱلْمُسْتَضْعَفِينَ مِنَ ٱلرِّجَالِ وَٱلنِّسَآءِ وَٱلْوِلْدَٰنِ ٱلَّذِينَ يَقُولُونَ رَبَّنَآ أَخْرِجْنَا مِنْ هَـٰذِهِ ٱلْقَرْيَةِ ٱلظَّالِمِ أَهْلُهَا وَٱجْعَل لَّنَا مِن لَّدُنكَ وَلِيًّا وَٱجْعَل لَّنَا مِن لَّدُنكَ نَصِيرًا ﴿٧٥﴾

៧៥-តើហេតុអ្វីបានជាពួកអ្នក(អ្នកមានជំនឿ) មិនធ្វើសង្គ្រាមក្នុងមាគ៌ារបស់អល់ឡោះ និង(ជួយសង្គ្រោះ) ពួកដែលទន់ខ្សោយក្នុងចំណោមបុរសនិងស្ត្រី ហើយនិងក្មេងៗ(ដែលត្រូវគេបំពាន) ដែលពួកគេកំពុងតែបួងសួងសុំថាៈ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាជួយសង្គ្រោះពួកយើងចេញពីភូមិស្រុក(ម៉ាក្កះ) នេះ ដែលប្រជាជនរបស់វាជាពួកដែលបំពាន ហើយមេត្តាប្រទានដល់ពួកយើងនូវអ្នកគាំពារពីទ្រង់ និងប្រទានដល់ពួកយើងនូវអ្នកជួយពីទ្រង់ផង។

ٱلَّذِينَ ءَامَنُوا۟ يُقَـٰتِلُونَ فِى سَبِيلِ ٱللَّهِ ۖ وَٱلَّذِينَ

៧៦-បណ្តាអ្នកដែលមានជំនឿនោះ ពួកគេធ្វើសង្គ្រាមក្នុងមាគ៌ារបស់អល់ឡោះ។ ចំណែកឯពួកដែលគ្មានជំនឿវិញ ពួកគេធ្វើសង្គ្រាម

كَفَرُواْ يُقَٰتِلُونَ فِي سَبِيلِ ٱلطَّٰغُوتِ فَقَٰتِلُوٓاْ
أَوۡلِيَآءَ ٱلشَّيۡطَٰنِۖ إِنَّ كَيۡدَ ٱلشَّيۡطَٰنِ كَانَ
ضَعِيفًا ﴿٧٦﴾

អ្នកមាគារបស់តហ្គូត ។ ដូច្នេះ ចូរពួកអ្នកធ្វើសង្គ្រាមប្រឆាំងនឹងសម្ព័ន្ធមិត្តរបស់ស្ហៃតនចុះ ។ ពិតប្រាកដណាស់ ល្បិចកលរបស់ស្ហៃតនគឺខ្សោយបំផុត ។

أَلَمۡ تَرَ إِلَى ٱلَّذِينَ قِيلَ لَهُمۡ كُفُّوٓاْ أَيۡدِيَكُمۡ
وَأَقِيمُواْ ٱلصَّلَوٰةَ وَءَاتُواْ ٱلزَّكَوٰةَ فَلَمَّا كُتِبَ
عَلَيۡهِمُ ٱلۡقِتَالُ إِذَا فَرِيقٞ مِّنۡهُمۡ يَخۡشَوۡنَ ٱلنَّاسَ
كَخَشۡيَةِ ٱللَّهِ أَوۡ أَشَدَّ خَشۡيَةٗۚ وَقَالُواْ رَبَّنَا لِمَ
كَتَبۡتَ عَلَيۡنَا ٱلۡقِتَالَ لَوۡلَآ أَخَّرۡتَنَآ إِلَىٰٓ أَجَلٖ
قَرِيبٖۗ قُلۡ مَتَٰعُ ٱلدُّنۡيَا قَلِيلٞ وَٱلۡأٓخِرَةُ خَيۡرٞ
لِّمَنِ ٱتَّقَىٰ وَلَا تُظۡلَمُونَ فَتِيلًا ﴿٧٧﴾

៧៧-តើអ្នក(មូហាំម៉ាត់)មិនបានឃើញទេឬ? ពួកដែលត្រូវគេនិយាយទៅកាន់ពួកគេ(មុនពេលអល់ឡោះដាក់កាតព្វកិច្ចឱ្យច្បាំង) ថា: ចូរពួកអ្នកហាមឃាត់ដៃរបស់ពួកអ្នក(អំពីការច្បាំង) ហើយត្រូវប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ ។ ហើយនៅពេលដែលអល់ឡោះបានដាក់កាតព្វកិច្ចសង្គ្រាមលើពួកគេ ស្រាប់តែក្រុមខ្លះនៃពួកគេខ្លាចមនុស្សលោកដូចជាខ្លាចអល់ឡោះ ឬខ្លាចជាងអល់ឡោះទៅទៀត ។ ហើយពួកគេនិយាយថា: ឱម្ចាស់របស់ពួកយើង! ហេតុអ្វីបានជាទ្រង់ដាក់កាតព្វកិច្ចសង្គ្រាមមកលើពួកយើង? ហេតុអ្វីបានជាទ្រង់មិនពន្យារពេលដល់ពួកយើងទៅពេលក្រោយទៀត? ចូរអ្នកប្រាប់ពួកគេថា: ការត្រេកត្រអាលនៅក្នុងលោកិយនេះគឺតិចតួចណាស់ រីឯថ្ងៃបរលោកវិញគឺល្អប្រសើរបំផុតសម្រាប់អ្នកដែលកោតខ្លាចអល់ឡោះ ហើយពួកអ្នកនឹងមិនត្រូវគេបំពានសូម្បីតែបន្តិចឡើយ ។

أَيۡنَمَا تَكُونُواْ يُدۡرِككُّمُ ٱلۡمَوۡتُ وَلَوۡ كُنتُمۡ فِي
بُرُوجٖ مُّشَيَّدَةٖۗ وَإِن تُصِبۡهُمۡ حَسَنَةٞ يَقُولُواْ
هَٰذِهِۦ مِنۡ عِندِ ٱللَّهِۖ وَإِن تُصِبۡهُمۡ سَيِّئَةٞ
يَقُولُواْ هَٰذِهِۦ مِنۡ عِندِكَۚ قُلۡ كُلّٞ مِّنۡ عِندِ
ٱللَّهِۖ فَمَالِ هَٰٓؤُلَآءِ ٱلۡقَوۡمِ لَا يَكَادُونَ
يَفۡقَهُونَ حَدِيثٗا ﴿٧٨﴾

៧៨-ទោះបីជាពួកអ្នកនៅទីកន្លែងណាក៏ដោយ ក៏សេចក្តីស្លាប់នឹងទៅដល់ពួកអ្នកដែរ សូម្បីតែពួកអ្នកនៅក្នុងប៉មដែលត្រូវបានស្ថាបនាដ៏រឹងមាំ និងខ្ពស់យ៉ាងណាក៏ដោយ ។ ហើយប្រសិនបើប្រការល្អកើតមានចំពោះពួកគេ ពួកគេនិយាយថា: ប្រការនេះមកពីអល់ឡោះ ។ តែប្រសិនបើប្រការអាក្រក់កើតមានចំពោះពួកគេវិញនោះ ពួកគេនិយាយថា ប្រការនេះមកពីអ្នក(មូហាំម៉ាត់) ។ ចូរអ្នកប្រាប់ពួកគេថា: ប្រការទាំងនេះសុទ្ធតែមកពីអល់ឡោះទាំងអស់ ។ ហេតុអ្វីបានជាក្រុមនេះស្ទើរតែមិនយល់នូវពាក្យសំដីដូច្នេះ?

مَّآ أَصَابَكَ مِنۡ حَسَنَةٖ فَمِنَ ٱللَّهِۖ وَمَآ
أَصَابَكَ مِن سَيِّئَةٖ فَمِن نَّفۡسِكَۚ وَأَرۡسَلۡنَٰكَ

៧៩-អ្វីដែលពួកអ្នកបានទទួលអំពីប្រការល្អនោះ គឺមកពីអល់ឡោះ ។ ហើយអ្វីដែលពួកអ្នកបានទទួលអំពីប្រការអាក្រក់វិញគឺមកពីខ្លួនឯង ។ ហើយយើងបានចាត់តាំងអ្នក(មូហាំម៉ាត់)ជាអ្នក

لِلنَّاسِ رَسُولًاۚ وَكَفَىٰ بِٱللَّهِ شَهِيدًا ﴿٧٩﴾

នាំសារសម្រាប់មនុស្សលោកទាំងអស់។ គ្រប់គ្រាន់ហើយអល់ឡោះជាសាក្សី។

مَّن يُطِعِ ٱلرَّسُولَ فَقَدْ أَطَاعَ ٱللَّهَۖ وَمَن تَوَلَّىٰ
فَمَآ أَرْسَلْنَٰكَ عَلَيْهِمْ حَفِيظًا ﴿٨٠﴾

៨០-អ្នកណាហើយប្រតិបត្តិតាមអ្នកនាំសារ(មូហាំម៉ាត់)គឺគេពិតជាបានប្រតិបត្តិតាមអល់ឡោះ។ តែអ្នកណាហើយងាកចេញវិញនោះ គឺយើងមិនបានចាត់តាំងអ្នកជាអ្នកថែរក្សាពួកគេឡើយ។

وَيَقُولُونَ طَاعَةٌ فَإِذَا بَرَزُواْ مِنْ عِندِكَ
بَيَّتَ طَآئِفَةٌ مِّنْهُمْ غَيْرَ ٱلَّذِى تَقُولُۖ وَٱللَّهُ
يَكْتُبُ مَا يُبَيِّتُونَۖ فَأَعْرِضْ عَنْهُمْ وَتَوَكَّلْ
عَلَى ٱللَّهِۚ وَكَفَىٰ بِٱللَّهِ وَكِيلًا ﴿٨١﴾

៨១-ហើយពួកគេនិយាយថាៈ យើងគោរពប្រតិបត្តិតាម(អ្នកនាំសារ) តែនៅពេលដែលពួកគេចាកចេញពីអ្នក(មូហាំម៉ាត់)ក្រុមខ្លះក្នុងចំណោមពួកគេរៀបចំផែនការនៅពេលយប់ផ្សេងពីអ្វីដែលអ្នកបាននិយាយ(នៅពេលថ្ងៃ)។ អល់ឡោះកត់ត្រាទុកនូវផែនការដែលពួកគេរៀបចំនៅពេលយប់នោះ។ ហេតុនេះ ចូរអ្នកងាកចេញពីពួកគេ ហើយត្រូវផ្តល់ទំនុកចិត្តទៅលើអល់ឡោះ។ គ្រប់គ្រាន់ហើយដែលអល់ឡោះជាអ្នកដែលត្រូវគេផ្តល់ទំនុកចិត្ត។

أَفَلَا يَتَدَبَّرُونَ ٱلْقُرْءَانَۚ وَلَوْ كَانَ مِنْ عِندِ
غَيْرِ ٱللَّهِ لَوَجَدُواْ فِيهِ ٱخْتِلَٰفًا كَثِيرًا ﴿٨٢﴾

៨២-តើពួកគេមិនត្រិះរិះពិចារណាអំពីគម្ពីរគួរអានទេឬ? ប្រសិនបើគម្ពីរនេះមិនមែនមកពីអល់ឡោះទេនោះ ពួកគេប្រាកដជាជួបប្រទះនូវការខ្វែងគំនិតគ្នាជាច្រើននៅក្នុងវា។

وَإِذَا جَآءَهُمْ أَمْرٌ مِّنَ ٱلْأَمْنِ أَوِ ٱلْخَوْفِ
أَذَاعُواْ بِهِۦۖ وَلَوْ رَدُّوهُ إِلَى ٱلرَّسُولِ وَإِلَىٰٓ
أُوْلِى ٱلْأَمْرِ مِنْهُمْ لَعَلِمَهُ ٱلَّذِينَ يَسْتَنۢبِطُونَهُۥ
مِنْهُمْۗ وَلَوْلَا فَضْلُ ٱللَّهِ عَلَيْكُمْ وَرَحْمَتُهُۥ
لَٱتَّبَعْتُمُ ٱلشَّيْطَٰنَ إِلَّا قَلِيلًا ﴿٨٣﴾

៨៣-ហើយនៅពេលដែលពត៌មានស្តីអំពីសន្តិសុខ ឬអសន្តិសុខបានមកដល់ពួកគេ គឺពួកគេផ្សព្វផ្សាយពត៌មាននោះភ្លាម។ តែប្រសិនបើពួកគេផ្តល់ពត៌មាននោះទៅកាន់អ្នកនាំសារ និងមេដឹកនាំរបស់ពួកគេវិញ អ្នកដែលចង់ដឹងការពិតក្នុងចំណោមពួកគេពិតជាបានដឹងវាជាមិនខាន។ ហើយប្រសិនបើគ្មានក្តីសន្តោសប្រណី និងក្តីមេត្តាករុណាអំពីអល់ឡោះមកលើពួកអ្នកទេនោះ ពួកអ្នកនឹងប្រតិបត្តិតាមស្ហៃតន លើកលែងតែមួយចំនួនតូចប៉ុណ្ណោះ។

فَقَٰتِلْ فِى سَبِيلِ ٱللَّهِ لَا تُكَلَّفُ إِلَّا نَفْسَكَۚ
وَحَرِّضِ ٱلْمُؤْمِنِينَۖ عَسَى ٱللَّهُ أَن يَكُفَّ
بَأْسَ ٱلَّذِينَ كَفَرُواْۚ وَٱللَّهُ أَشَدُّ بَأْسًا
وَأَشَدُّ تَنكِيلًا ﴿٨٤﴾

៨៤-ចូរអ្នក(មូហាំម៉ាត់)ធ្វើសង្គ្រាមក្នុងផ្លូវអល់ឡោះ។ អល់ឡោះមិនដាក់បន្ទុកទៅលើអ្នកណាក្រៅពីអ្នកឡើយ។ ហើយអ្នកត្រូវជំរុញបណ្តាអ្នកដែលមានជំនឿ(ក្នុងការធ្វើសង្គ្រាម)។ សង្ឃឹមថា អល់ឡោះនឹងទប់ស្កាត់នូវអំពើព្រៃផ្សៃរបស់ពួកដែលប្រឆាំង។ អល់ឡោះជាអ្នកមានអានុភាពខ្លាំងក្លា និងជាអ្នកធ្វើទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។

مَّن يَشْفَعْ شَفَٰعَةً حَسَنَةً يَكُن لَّهُۥ نَصِيبٌ مِّنْهَا ۖ وَمَن يَشْفَعْ شَفَٰعَةً سَيِّئَةً يَكُن لَّهُۥ كِفْلٌ مِّنْهَا ۗ وَكَانَ ٱللَّهُ عَلَىٰ كُلِّ شَىْءٍ مُّقِيتًا ﴿٨٥﴾

៨៥-អ្នកណាដែលធ្វើអន្តរាគមន៍ដោយអំពើល្អ(ដល់អ្នកដទៃ) គេប្រាកដជានឹងទទួលបានផលបុណ្យមួយចំណែកអំពីវា។ ហើយអ្នកណាដែលធ្វើអន្តរាគមន៍ដោយអំពើអាក្រក់វិញ គេប្រាកដជានឹងទទួលបានផលអាក្រក់មួយចំណែកអំពីវាដែរ។ ហើយអល់ឡោះជាអ្នកថែរក្សាអ្វីៗទាំងអស់។

وَإِذَا حُيِّيتُم بِتَحِيَّةٍ فَحَيُّوا۟ بِأَحْسَنَ مِنْهَآ أَوْ رُدُّوهَآ ۗ إِنَّ ٱللَّهَ كَانَ عَلَىٰ كُلِّ شَىْءٍ حَسِيبًا ﴿٨٦﴾

៨៦-ហើយនៅពេលដែលពួកអ្នកត្រូវបានគេស្វាគមន៍(ឱ្យសាឡាម) ចូរពួកអ្នកស្វាគមន៍វិញដោយប្រសើរជាងនេះ ឬដោយស្មើគ្នា។ ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកជំនុំជំរះលើអ្វីៗទាំងអស់។

ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ۚ لَيَجْمَعَنَّكُمْ إِلَىٰ يَوْمِ ٱلْقِيَٰمَةِ لَا رَيْبَ فِيهِ ۗ وَمَنْ أَصْدَقُ مِنَ ٱللَّهِ حَدِيثًا ﴿٨٧﴾

៨៧-អល់ឡោះតែមួយគត់ គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការះក្រៅពីទ្រង់ឡើយ។ ទ្រង់ប្រាកដជាប្រមូលផ្តុំពួកអ្នកនៅថ្ងៃបរលោកដោយគ្មានការសង្ស័យឡើយ។ តើអ្នកណាដែលមានពាក្យសំដីពិតជាងអល់ឡោះទៀតនោះ?

۞ فَمَا لَكُمْ فِى ٱلْمُنَٰفِقِينَ فِئَتَيْنِ وَٱللَّهُ أَرْكَسَهُم بِمَا كَسَبُوٓا۟ ۚ أَتُرِيدُونَ أَن تَهْدُوا۟ مَنْ أَضَلَّ ٱللَّهُ ۖ وَمَن يُضْلِلِ ٱللَّهُ فَلَن تَجِدَ لَهُۥ سَبِيلًا ﴿٨٨﴾

៨៨-តើហេតុអ្វីបានជាពួកអ្នក(អ្នកមានជំនឿ)បែកជាពីរក្រុមក្នុងរឿងពួកពុតត្បុត ខណៈដែលអល់ឡោះបានបោះបង់ពួកគេ(ឱ្យស្ថិតក្នុងភាពគ្មានជំនឿ) ដោយសារទង្វើរបស់ពួកគេនោះ? តើពួកអ្នកចង់ចង្អុលបង្ហាញចំពោះអ្នកដែលអល់ឡោះបានធ្វើឱ្យគេវង្វេងឬ? អ្នកណាហើយដែលអល់ឡោះធ្វើឱ្យវង្វេងគឺអ្នក(មូហាំម៉ាត់) នឹងមិនអាចមានផ្លូវណាមួយ(ការចង្អុលបង្ហាញ)សម្រាប់គេឡើយ។

وَدُّوا۟ لَوْ تَكْفُرُونَ كَمَا كَفَرُوا۟ فَتَكُونُونَ سَوَآءً ۖ فَلَا تَتَّخِذُوا۟ مِنْهُمْ أَوْلِيَآءَ حَتَّىٰ يُهَاجِرُوا۟ فِى سَبِيلِ ٱللَّهِ ۚ فَإِن تَوَلَّوْا۟ فَخُذُوهُمْ وَٱقْتُلُوهُمْ حَيْثُ وَجَدتُّمُوهُمْ ۖ وَلَا تَتَّخِذُوا۟ مِنْهُمْ وَلِيًّا وَلَا نَصِيرًا ﴿٨٩﴾

៨៩-ពួកគេ(ពួកពុតត្បុត)ប៉ងប្រាថ្នាចង់ឱ្យពួកអ្នកប្រឆាំងដូចអ្វីដែលពួកគេបានប្រឆាំងដែរ ពេលនោះពួកអ្នកនឹងក្លាយដូចជាពួកគេ។ ដូច្នេះ ចូរពួកអ្នកកុំយកពួកគេធ្វើជាសម្ព័ន្ធមិត្ត លុះត្រាតែពួកគេភៀសខ្លួនក្នុងមាគ៌ារបស់អល់ឡោះ[១]។ តែប្រសិនបើពួកគេងាកចេញ(អំពីអ្វីដែលពួកអ្នកបានអំពាវនាវនោះ) ចូរពួកអ្នកចាប់ពួកគេ និងសម្លាប់ពួកគេនៅទីណាក៏ដោយដែលពួកអ្នកបានជួបប្រទះពួកគេ ហើយចូរពួកអ្នកកុំយកនរណាម្នាក់ក្នុងចំណោមពួកគេ

---

១-ចំណាកស្រុករបស់ពួកពុតត្បុតមានពីរលើក លើកទីមួយចំណាកស្រុកពីម៉ាក្កះទៅម៉ាឌីណះ ដើម្បីផ្តាច់ទំនាក់ទំនងរបស់ពួកគេជាមួយពួកប្រឆាំង។ លើកទីពីរចំណាកស្រុកពីម៉ាឌីណះ ចូលរួមប្រយុទ្ធជាមួយអ្នកនាំសារ។

ធ្វើជាអ្នកគាំពារ និងជាអ្នកជំនួយឱ្យសោះ។

إِلَّا ٱلَّذِينَ يَصِلُونَ إِلَىٰ قَوۡمِۭ بَيۡنَكُمۡ وَبَيۡنَهُم
مِّيثَٰقٌ أَوۡ جَآءُوكُمۡ حَصِرَتۡ صُدُورُهُمۡ أَن
يُقَٰتِلُوكُمۡ أَوۡ يُقَٰتِلُواْ قَوۡمَهُمۡۚ وَلَوۡ شَآءَ ٱللَّهُ
لَسَلَّطَهُمۡ عَلَيۡكُمۡ فَلَقَٰتَلُوكُمۡۚ فَإِنِ ٱعۡتَزَلُوكُمۡ
فَلَمۡ يُقَٰتِلُوكُمۡ وَأَلۡقَوۡاْ إِلَيۡكُمُ ٱلسَّلَمَ فَمَا جَعَلَ
ٱللَّهُ لَكُمۡ عَلَيۡهِمۡ سَبِيلٗا ٩٠

៩០-លើកលែងតែពួកដែលទៅសុំផ្សារភ្ជាប់ជាមួយនឹងក្រុមមួយដែលពួកអ្នក(មូស្លីម)និងពួកគេមានកិច្ចព្រមព្រៀងជាមួយគ្នា។ ឬពួកដែលបានមកជួបពួកអ្នកដោយចិត្តរបស់ពួកគេមានអារម្មណ៍ធុញថប់ក្នុងការធ្វើសង្គ្រាមប្រឆាំងនឹងពួកអ្នក ឬធ្វើសង្គ្រាមប្រឆាំងនឹងក្រុមរបស់ពួកគេ។ ហើយប្រសិនបើអល់ឡោះមានចេតនា ទ្រង់ពិតជានឹងធ្វើឱ្យពួកគេត្រួតត្រាលើពួកអ្នក ពេលនោះពួកគេនឹងធ្វើសង្គ្រាមឈ្នះពួកអ្នកជាមិនខាន។ តែប្រសិនបើពួកគេបានដកថយចេញពីពួកអ្នក ដោយមិនធ្វើសង្គ្រាមប្រឆាំងនឹងពួកអ្នក ហើយធ្វើការចរចារជាមួយពួកអ្នកវិញនោះ គឺអល់ឡោះមិនបើកផ្លូវ(អនុញ្ញាត)ឱ្យពួកអ្នកធ្វើអ្វីទៅលើពួកគេឡើយ(ចាប់ឬសម្លាប់ពួកគេ)។

سَتَجِدُونَ ءَاخَرِينَ يُرِيدُونَ أَن يَأۡمَنُوكُمۡ
وَيَأۡمَنُواْ قَوۡمَهُمۡ كُلَّ مَا رُدُّوٓاْ إِلَى ٱلۡفِتۡنَةِ
أُرۡكِسُواْ فِيهَاۚ فَإِن لَّمۡ يَعۡتَزِلُوكُمۡ وَيُلۡقُوٓاْ إِلَيۡكُمُ
ٱلسَّلَمَ وَيَكُفُّوٓاْ أَيۡدِيَهُمۡ فَخُذُوهُمۡ وَٱقۡتُلُوهُمۡ
حَيۡثُ ثَقِفۡتُمُوهُمۡۚ وَأُوْلَٰٓئِكُمۡ جَعَلۡنَا لَكُمۡ
عَلَيۡهِمۡ سُلۡطَٰنٗا مُّبِينٗا ٩١

៩១-ពួកអ្នកនឹងជួបប្រទះក្រុមពុតត្បុតមួយផ្សេងទៀតដែលពួកគេចង់បានសន្តិភាពពីពួកអ្នកនិងសន្តិភាពពីក្រុមរបស់ពួកគេ។ រាល់ពេលដែលពួកគេត្រូវគេអូសទាញទៅកាន់ប្រការស្ហ៊ីរិកវិញ ពួកគេក៏លោតចូលទៅក្នុងវាយ៉ាងលឿន។ តែបើពួកគេមិនបែរចេញពីពួកអ្នក និងមិនព្រមចរចារជាមួយពួកអ្នក ហើយនិងមិនបញ្ឈប់ដៃរបស់ពួកគេ(អំពីការធ្វើសង្គ្រាមប្រឆាំងជាមួយពួកអ្នក)ទេនោះ ចូរពួកអ្នកចាប់ខ្លួនពួកគេនិងសម្លាប់ពួកគេ ទោះនៅទីណាក៏ដោយពេលដែលពួកអ្នកបានជួបប្រទះពួកគេ។ ពីព្រោះពួកទាំងនេះហើយដែលយើងបានផ្តល់ហេតុផលយ៉ាងច្បាស់លាស់ឱ្យពួកអ្នកក្នុងការចាប់ខ្លួន ឬសម្លាប់ពួកគេ។

وَمَا كَانَ لِمُؤۡمِنٍ أَن يَقۡتُلَ مُؤۡمِنًا إِلَّا
خَطَـٔٗاۚ وَمَن قَتَلَ مُؤۡمِنًا خَطَـٔٗا فَتَحۡرِيرُ رَقَبَةٖ
مُّؤۡمِنَةٖ وَدِيَةٞ مُّسَلَّمَةٌ إِلَىٰٓ أَهۡلِهِۦٓ إِلَّآ أَن
يَصَّدَّقُواْۚ فَإِن كَانَ مِن قَوۡمٍ عَدُوّٖ لَّكُمۡ
وَهُوَ مُؤۡمِنٞ فَتَحۡرِيرُ رَقَبَةٖ مُّؤۡمِنَةٖۖ وَإِن
كَانَ مِن قَوۡمِۭ بَيۡنَكُمۡ وَبَيۡنَهُم مِّيثَٰقٞ

៩២-ចំពោះអ្នកមានជំនឿមិនមានសិទ្ធិធ្វើឃាតអ្នកមានជំនឿដូចគ្នាទេ លើកលែងតែក្នុងករណីអចេតនា។ ហើយអ្នកណាបានជ្រុលជ្រួសធ្វើឃាតអ្នកមានជំនឿដោយអចេតនា គឺគេត្រូវដោះលែងទាសីដែលមានជំនឿម្នាក់ឱ្យមានសេរីភាព និងត្រូវបង់ពិន័យ(ជាទ្រព្យសម្បត្តិដែលត្រូវបានកំណត់)ទៅឱ្យក្រុមគ្រួសារជនរងគ្រោះ លើកលែងតែពួកគេ(ក្រុមគ្រួសារជនរងគ្រោះ)មានការអធ្យាស្រ័យ។ ហើយប្រសិនបើជនរងគ្រោះស្ថិតនៅក្នុងក្រុមសត្រូវរបស់ពួកអ្នក តែរូបគេជាអ្នកមានជំនឿ គឺគេ(ឃាតករ)ត្រូវដោះ

فَدِيَةٌ مُّسَلَّمَةٌ إِلَىٰٓ أَهۡلِهِۦٓ وَتَحۡرِيرُ رَقَبَةٖ مُّؤۡمِنَةٖۖ
فَمَن لَّمۡ يَجِدۡ فَصِيَامُ شَهۡرَيۡنِ مُتَتَابِعَيۡنِ تَوۡبَةٗ
مِّنَ ٱللَّهِۗ وَكَانَ ٱللَّهُ عَلِيمًا حَكِيمٗا ﴿٩٢﴾

លែងទាសីដែលមានជំនឿម្នាក់ឱ្យមានសេរីភាព។ តែបើជនរងគ្រោះស្ថិតនៅក្នុងក្រុមដែលបានចុះកិច្ចព្រមព្រៀងរវាងពួកអ្នកនិងពួកគេ គឺគេ(ឃាតករ)ត្រូវបង់ពិន័យ(ទ្រព្យសម្បត្តិ)ទៅឱ្យក្រុមគ្រួសារជនរងគ្រោះ(តាមការកំណត់) និងដោះលែងទាសីដែលមានជំនឿម្នាក់ឱ្យមានសេរីភាព។ ប៉ុន្តែអ្នកណា(ឃាតករ)គ្មានលទ្ធភាពទេនោះ គេត្រូវបួសរយៈពេលពីរខែជាប់គ្នា(ការធ្វើដូច្នេះ)ដើម្បីឱ្យអល់ឡោះទទួលនូវការសារភាពកំហុស(របស់គេ)។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

وَمَن يَقۡتُلۡ مُؤۡمِنٗا مُّتَعَمِّدٗا فَجَزَآؤُهُۥ جَهَنَّمُ
خَٰلِدٗا فِيهَا وَغَضِبَ ٱللَّهُ عَلَيۡهِ وَلَعَنَهُۥ وَأَعَدَّ
لَهُۥ عَذَابًا عَظِيمٗا ﴿٩٣﴾

៩៣-ហើយអ្នកណាធ្វើឃាតអ្នកមានជំនឿម្នាក់ដោយចេតនា ការតបស្នងសម្រាប់គេ គឺនរកជើហាន់ណាំដោយគេនៅក្នុងនោះជាអមតៈ ហើយអល់ឡោះខឹងសម្បា និងដាក់បណ្តាសាចំពោះគេ ហើយទ្រង់រៀបចំសម្រាប់គេនូវទារុណកម្មដ៏ធ្ងន់ធ្ងរ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا ضَرَبۡتُمۡ فِي سَبِيلِ
ٱللَّهِ فَتَبَيَّنُواْ وَلَا تَقُولُواْ لِمَنۡ أَلۡقَىٰٓ إِلَيۡكُمُ
ٱلسَّلَٰمَ لَسۡتَ مُؤۡمِنٗا تَبۡتَغُونَ عَرَضَ
ٱلۡحَيَوٰةِ ٱلدُّنۡيَا فَعِندَ ٱللَّهِ مَغَانِمُ كَثِيرَةٞۚ
كَذَٰلِكَ كُنتُم مِّن قَبۡلُ فَمَنَّ ٱللَّهُ
عَلَيۡكُمۡ فَتَبَيَّنُوٓاْۚ إِنَّ ٱللَّهَ كَانَ بِمَا
تَعۡمَلُونَ خَبِيرٗا ﴿٩٤﴾

៩៤-ឱបណ្តាអ្នកដែលមានជំនឿ! កាលណាពួកអ្នកចេញដំណើរទៅធ្វើសង្គ្រាមក្នុងមាគ៌ាអល់ឡោះ ចូរពួកអ្នកពិនិត្យឱ្យបានច្បាស់។ ហើយចូរពួកអ្នកកុំនិយាយទៅកាន់អ្នកដែលបានឱ្យសាឡាមចំពោះពួកអ្នកថាៈ អ្នកពុំមែនជាអ្នកដែលមានជំនឿ (ពេលនោះពួកអ្នកក៏សម្លាប់គេ)ដើម្បីចង់បានទ្រព្យសម្បត្តិ(ជ័យភណ្ឌ)ក្នុងជីវិតលោកិយឱ្យសោះ។ តែនៅជាមួយអល់ឡោះវិញមានជ័យភណ្ឌដ៏ច្រើនលើសលប់។ ពួកអ្នកកាលពីមុនក៏ដូច្នេះដែរ(អ្នកដទៃដឹងពីការចូលសាសនាអ៊ីស្លាមរបស់ពួកអ្នកក៏ដោយសារការឱ្យសាឡាមនេះដែរ) ពេលនោះអល់ឡោះក៏បានប្រទានលាភសក្ការៈឱ្យពួកអ្នក ដូច្នេះចូរពួកអ្នកពិនិត្យឱ្យបានច្បាស់(មុនសម្រេចកិច្ចការអ្វីមួយ)។ ពិតប្រាកដណាស់ អល់ឡោះដឹងបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

لَّا يَسۡتَوِي ٱلۡقَٰعِدُونَ مِنَ ٱلۡمُؤۡمِنِينَ غَيۡرُ
أُوْلِي ٱلضَّرَرِ وَٱلۡمُجَٰهِدُونَ فِي سَبِيلِ ٱللَّهِ
بِأَمۡوَٰلِهِمۡ وَأَنفُسِهِمۡۚ فَضَّلَ ٱللَّهُ ٱلۡمُجَٰهِدِينَ
بِأَمۡوَٰلِهِمۡ وَأَنفُسِهِمۡ عَلَى ٱلۡقَٰعِدِينَ دَرَجَةٗۚ

៩៥-មិនស្មើគ្នាទេពួកដែលមិនបានចេញទៅធ្វើសង្គ្រាមក្នុងចំណោមអ្នកដែលមានជំនឿជាមួយនឹងអ្នកដែលតស៊ូក្នុងមាគ៌ារបស់អល់ឡោះទាំងទ្រព្យសម្បត្តិនិងខ្លួនប្រាណរបស់ពួកគេ លើកលែងតែអ្នកដែលមានឧបសគ្គ(អ្នកជំងឺអ្នកពិការ...)ប៉ុណ្ណោះ។ អល់ឡោះបានប្រទានឱ្យបណ្តាអ្នកដែលតស៊ូធ្វើសង្គ្រាមទាំងទ្រព្យសម្បត្តិ និងខ្លួនប្រាណរបស់ពួកគេឱ្យមានឋានៈខ្ពង់ខ្ពស់ជាងបណ្តាអ្នកដែលមិន

وَكُلًّا وَعَدَ ٱللَّهُ ٱلْحُسْنَىٰ ۚ وَفَضَّلَ ٱللَّهُ
ٱلْمُجَٰهِدِينَ عَلَى ٱلْقَٰعِدِينَ أَجْرًا
عَظِيمًا ﴿٩٥﴾

បានចេញទៅធ្វើសង្គ្រាម ។ ហើយក្រុមទាំងពីរនេះអល់ឡោះបានសន្យាថា នឹងប្រទានឋានសួគ៌(ដល់ពួកគេ) ។ តែអល់ឡោះបានប្រទានឱ្យបណ្តាអ្នកដែលតស៊ូធ្វើសង្គ្រាមនោះនូវផលបុណ្យដ៏ធំធេងលើសពីបណ្តាអ្នកដែលមិនបានចេញទៅធ្វើសង្គ្រាម ។

دَرَجَٰتٍ مِّنْهُ وَمَغْفِرَةً وَرَحْمَةً ۚ وَكَانَ ٱللَّهُ
غَفُورًا رَّحِيمًا ﴿٩٦﴾

៩៦-គឺឋានៈដ៏ខ្ពង់ខ្ពស់(នៅក្នុងឋានសួគ៌) និងការអភ័យទោស ហើយនិងក្តីអាណិតស្រឡាញ់ពីទ្រង់ ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

إِنَّ ٱلَّذِينَ تَوَفَّىٰهُمُ ٱلْمَلَٰٓئِكَةُ ظَالِمِىٓ أَنفُسِهِمْ
قَالُوا۟ فِيمَ كُنتُمْ ۖ قَالُوا۟ كُنَّا مُسْتَضْعَفِينَ فِى
ٱلْأَرْضِ ۚ قَالُوٓا۟ أَلَمْ تَكُنْ أَرْضُ ٱللَّهِ وَٰسِعَةً
فَتُهَاجِرُوا۟ فِيهَا ۚ فَأُو۟لَٰٓئِكَ مَأْوَىٰهُمْ جَهَنَّمُ ۖ
وَسَآءَتْ مَصِيرًا ﴿٩٧﴾

៩៧-ពិតប្រាកដណាស់ ពួកដែលម៉ាឡាអ៊ីកាត់បានបញ្ចប់ជីវិតរបស់ពួកគេ ខណៈដែលពួកគេជាអ្នកបំពានលើខ្លួនឯង(ដោយមិនព្រមភៀសខ្លួនក្នុងមាគ៌ារបស់អល់ឡោះ) ។ ម៉ាឡាអ៊ីកាត់បានសួរទៅពួកគេថាៈ តើពួកអ្នកបានធ្វើអ្វីខ្លះ(សម្រាប់កិច្ចការសាសនា)? ពួកគេបានតបថាៈ ពួកយើងជាអ្នកទន់ខ្សោយដែលរស់នៅលើផែនដីនេះ ។ ម៉ាឡាអ៊ីកាត់បានសួរទៀតថាៈ តើផែនដីរបស់អល់ឡោះមិនធំទូលំទូលាយសម្រាប់ឱ្យពួកអ្នកភៀសខ្លួនចេញទេឬ? ពួកទាំងនោះទីជម្រករបស់ពួកគេគឺនរកជើហាន់ណាំ ដែលជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត ។

إِلَّا ٱلْمُسْتَضْعَفِينَ مِنَ ٱلرِّجَالِ وَٱلنِّسَآءِ
وَٱلْوِلْدَٰنِ لَا يَسْتَطِيعُونَ حِيلَةً وَلَا يَهْتَدُونَ
سَبِيلًا ﴿٩٨﴾

៩៨-លើកលែងតែពួកដែលទន់ខ្សោយក្នុងចំណោមបុរស និងស្ត្រី និងក្មេងតូចៗដែលគ្មានលទ្ធភាពរិះរកមធ្យោបាយ(ចាកចេញ) និងមិនស្គាល់ផ្លូវប៉ុណ្ណោះ ។

فَأُو۟لَٰٓئِكَ عَسَى ٱللَّهُ أَن يَعْفُوَ عَنْهُمْ ۚ وَكَانَ
ٱللَّهُ عَفُوًّا غَفُورًا ﴿٩٩﴾

៩៩-ពួកទាំងនោះ សង្ឃឹមថាអល់ឡោះនឹងអធ្យាស្រ័យដល់ពួកគេ ។ ហើយអល់ឡោះមហាអធ្យាស្រ័យ មហាអភ័យទោស ។

۞ وَمَن يُهَاجِرْ فِى سَبِيلِ ٱللَّهِ يَجِدْ فِى ٱلْأَرْضِ
مُرَٰغَمًا كَثِيرًا وَسَعَةً ۚ وَمَن يَخْرُجْ مِنۢ بَيْتِهِۦ
مُهَاجِرًا إِلَى ٱللَّهِ وَرَسُولِهِۦ ثُمَّ يُدْرِكْهُ ٱلْمَوْتُ
فَقَدْ وَقَعَ أَجْرُهُۥ عَلَى ٱللَّهِ ۗ وَكَانَ ٱللَّهُ غَفُورًا

១០០-អ្នកណាដែលភៀសខ្លួនក្នុងផ្លូវអល់ឡោះ គេប្រាកដជានឹងជួបប្រទះនៅលើផែនដីនេះនូវកន្លែងជ្រកកោនជាច្រើន និងលាភសក្ការៈដ៏សំបូរបែប ។ ហើយអ្នកណាដែលចាកចេញពីលំនៅដ្ឋានរបស់គេក្នុងនាមជាអ្នកភៀសខ្លួន ដើម្បីអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ក្រោយមកសេចក្តីស្លាប់ក៏កើតមានចំពោះគេ(ក្នុងពេលធ្វើដំណើរ) ប្រាកដណាស់ផលបុណ្យរបស់គេគឺស្ថិតនៅជាមួយ

رَّحِيمًا ﴿١٠٠﴾
وَإِذَا ضَرَبۡتُمۡ فِي ٱلۡأَرۡضِ فَلَيۡسَ عَلَيۡكُمۡ جُنَاحٌ
أَن تَقۡصُرُواْ مِنَ ٱلصَّلَوٰةِ إِنۡ خِفۡتُمۡ أَن يَفۡتِنَكُمُ
ٱلَّذِينَ كَفَرُوٓاْۚ إِنَّ ٱلۡكَٰفِرِينَ كَانُواْ لَكُمۡ عَدُوّٗا
مُّبِينٗا ﴿١٠١﴾
وَإِذَا كُنتَ فِيهِمۡ فَأَقَمۡتَ لَهُمُ ٱلصَّلَوٰةَ فَلۡتَقُمۡ
طَآئِفَةٞ مِّنۡهُم مَّعَكَ وَلۡيَأۡخُذُوٓاْ أَسۡلِحَتَهُمۡ فَإِذَا
سَجَدُواْ فَلۡيَكُونُواْ مِن وَرَآئِكُمۡ وَلۡتَأۡتِ
طَآئِفَةٌ أُخۡرَىٰ لَمۡ يُصَلُّواْ فَلۡيُصَلُّواْ مَعَكَ
وَلۡيَأۡخُذُواْ حِذۡرَهُمۡ وَأَسۡلِحَتَهُمۡۗ وَدَّ ٱلَّذِينَ
كَفَرُواْ لَوۡ تَغۡفُلُونَ عَنۡ أَسۡلِحَتِكُمۡ
وَأَمۡتِعَتِكُمۡ فَيَمِيلُونَ عَلَيۡكُم مَّيۡلَةٗ وَٰحِدَةٗۚ
وَلَا جُنَاحَ عَلَيۡكُمۡ إِن كَانَ بِكُمۡ أَذٗى مِّن
مَّطَرٍ أَوۡ كُنتُم مَّرۡضَىٰٓ أَن تَضَعُوٓاْ أَسۡلِحَتَكُمۡۖ
وَخُذُواْ حِذۡرَكُمۡۗ إِنَّ ٱللَّهَ أَعَدَّ لِلۡكَٰفِرِينَ
عَذَابٗا مُّهِينٗا ﴿١٠٢﴾
فَإِذَا قَضَيۡتُمُ ٱلصَّلَوٰةَ فَٱذۡكُرُواْ ٱللَّهَ قِيَٰمٗا

អល់ឡោះ។ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

១០១-ហើយនៅពេលដែលពួកអ្នក(អ្នកមានជំនឿ)ធ្វើដំណើរនៅលើផែនដីនេះ គឺគ្មានទោសពៃរ៍អ្វីចំពោះពួកអ្នកឡើយ ដែលពួកអ្នកបង្រួញសឡាតនោះ ប្រសិនបើពួកអ្នកខ្លាចពួកដែលប្រឆាំងវាយប្រហារមកលើពួកអ្នក។ ពិតប្រាកដណាស់ ពួកដែលប្រឆាំងនោះ គឺជាសត្រូវរបស់ពួកអ្នកយ៉ាងពិតប្រាកដ។

១០២-ហើយកាលណាអ្នក(មូហាំម៉ាត់)នៅជាមួយពួកគេ (ពួកសហាហ្ពាត់[1] ក្នុងពេលធ្វើសង្គ្រាម) ពេលនោះអ្នកចង់ដឹកនាំពួកគេសឡាត ចូរឱ្យមួយក្រុមក្នុងចំណោមពួកគេឈរសឡាតជាមួយអ្នក ហើយចូរឱ្យពួកគេកាន់អាវុធជាប់នឹងខ្លួន។ ហើយនៅពេលដែលពួកគេស៊ូជូតរួច ចូរឱ្យពួកគេនៅពីក្រោយពួកអ្នក(ដើម្បីការពារ) បន្ទាប់មកចូរឱ្យក្រុមផ្សេងទៀត(ក្រុមទីពីរ)ដែលមិនទាន់សឡាតមកសឡាតជាមួយអ្នក ហើយចូរឱ្យពួកគេប្រុងប្រយ័ត្ន និងកាន់អាវុធជាប់នឹងខ្លួនជានិច្ច[2]។ ពួកសត្រូវមានបំណងចង់ឱ្យពួកអ្នកធ្វេសប្រហែសសព្វាវុធ និងសំភារៈផ្សេងៗរបស់ពួកអ្នក ដើម្បីពួកគេវាយសង្គ្រប់មកលើពួកអ្នកតែម្តង។ ហើយគ្មានទោសពៃរ៍អ្វីចំពោះពួកអ្នកក្នុងការទុកអាវុធរបស់ពួកអ្នករៀងៗខ្លួនឡើយ ប្រសិនបើពួកអ្នកជួបនឹងឧបសគ្គ ដូចជាភ្លៀង ឬជម្ងឺ តែពួកអ្នកត្រូវប្រកាន់ការប្រុងប្រយ័ត្នជានិច្ច។ ពិតប្រាកដណាស់អល់ឡោះបានរៀបចំសម្រាប់ពួកដែលប្រឆាំងនោះនូវទារុណកម្មដ៏អាម៉ាស់បំផុត។

១០៣-ហើយនៅពេលដែលពួកអ្នកបំពេញកាតព្វកិច្ចសឡាតរួច ចូរពួកអ្នករំលឹកទៅចំពោះអល់ឡោះទាំងពេលឈរ ពេលអង្គុយ

១-សហាហ្ពាត់ : អ្នកដែលបានជួបមូហាំម៉ាត់ ហើយមានជំនឿលើគាត់ និងស្លាប់ក្នុងនាមជាអ្នកមូស្លីម។
២-អល់ឡោះបានបញ្ជាក់នៅវាក្យខណ្ឌនេះអំពីរបៀបសឡាតក្នុងពេលធ្វើសង្គ្រាម គឺកងទ័ពត្រូវបែងចែកជាពីរក្រុមដោយក្រុមទីមួយត្រូវសឡាតជាមួយអ៊ីមុាំ ហើយក្រុមទីពីរជាអ្នកឈរការពារ។ ពេលចប់រ៉ក្អាត់ទីពីរក្រុមទីមួយត្រូវឱ្យសាឡាមបញ្ចប់សឡាតរៀងៗខ្លួន ហើយត្រូវឈរការពារវិញម្តង តែអ៊ីមុាំត្រូវរង់ចាំក្រុមទីពីរមកសឡាតជាមួយគាត់ដោយតាមគាត់ចាប់ពីអង្គុយតះយ៉ាត់ទីពីរទៅ បន្ទាប់មកពួកគេត្រូវក្រោកឈរដើម្បីបំពេញសឡាតពីររ៉ក្អាត់របស់ពួកគេរៀងៗខ្លួន ចំណែកអ៊ីមុាំត្រូវរង់ចាំឱ្យសាឡាមបញ្ចប់សឡាតជាមួយពួកគេ។

وَقُعُودًا وَعَلَىٰ جُنُوبِكُمْۚ فَإِذَا ٱطۡمَأۡنَنتُمۡ فَأَقِيمُواْ ٱلصَّلَوٰةَۚ إِنَّ ٱلصَّلَوٰةَ كَانَتۡ عَلَى ٱلۡمُؤۡمِنِينَ كِتَٰبٗا مَّوۡقُوتٗا (١٠٣)

និងពេលដេករបស់ពួកអ្នក ។ ហើយនៅពេលណាដែលពួកអ្នកមានសន្តិភាពវិញ ចូរពួកអ្នកប្រតិបត្តិសឡាត( គ្រប់ចំនួនដូចធម្មតា) ។ ពិតប្រាកដណាស់ សឡាតជាកាតព្វកិច្ចមួយទៅលើបណ្តាអ្នកមានជំនឿ ដែលមានពេលវេលាកំណត់យ៉ាងច្បាស់លាស់ ។

وَلَا تَهِنُواْ فِي ٱبۡتِغَآءِ ٱلۡقَوۡمِۖ إِن تَكُونُواْ تَأۡلَمُونَ فَإِنَّهُمۡ يَأۡلَمُونَ كَمَا تَأۡلَمُونَۖ وَتَرۡجُونَ مِنَ ٱللَّهِ مَا لَا يَرۡجُونَۗ وَكَانَ ٱللَّهُ عَلِيمًا حَكِيمًا (١٠٤)

១០៤- ហើយចូរពួកអ្នកកុំទន់ជ្រាយក្នុងការប្រឈមមុខជាមួយសត្រូវ ។ ប្រសិនបើពួកអ្នកទទួលការឈឺចាប់( ដោយមុខរបួស) ពិតប្រាកដណាស់ ពួកគេក៏ឈឺចាប់ដូចអ្វីដែលពួកអ្នកឈឺចាប់ដែរ ។ ប៉ុន្តែពួកអ្នកនៅមានសង្ឃឹម( ផលបុណ្យ និងការគាំទ្រ) ពីអល់ឡោះនូវអ្វីដែលពួកគេមិនមានសង្ឃឹមឡើយ ។ ហើយអល់ឡោះមហាដឹងមហាគតិបណ្ឌិត ។

إِنَّآ أَنزَلۡنَآ إِلَيۡكَ ٱلۡكِتَٰبَ بِٱلۡحَقِّ لِتَحۡكُمَ بَيۡنَ ٱلنَّاسِ بِمَآ أَرَىٰكَ ٱللَّهُۚ وَلَا تَكُن لِّلۡخَآئِنِينَ خَصِيمٗا (١٠٥)

១០៥-ពិតប្រាកដណាស់ យើងបានបញ្ចុះគម្ពីរ( គួរអាន) ឱ្យអ្នកដែលពោរពេញទៅដោយការពិត ដើម្បីឱ្យអ្នកកាត់សេចក្តីរវាងមនុស្សលោកតាមអ្វីដែលអល់ឡោះបានបំភ្លឺដល់អ្នក ។ ហើយចូរអ្នកកុំជួយការពារពួកជនក្បត់ឱ្យសោះ ។

وَٱسۡتَغۡفِرِ ٱللَّهَۖ إِنَّ ٱللَّهَ كَانَ غَفُورٗا رَّحِيمٗا (١٠٦)

១០៦-ហើយចូរអ្នកសុំអភ័យទោសពីអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَلَا تُجَٰدِلۡ عَنِ ٱلَّذِينَ يَخۡتَانُونَ أَنفُسَهُمۡۚ إِنَّ ٱللَّهَ لَا يُحِبُّ مَن كَانَ خَوَّانًا أَثِيمٗا (١٠٧)

១០៧-ហើយចូរអ្នកកុំការពារពួកដែលក្បត់ខ្លួនឯងឱ្យសោះ ។ ពិតប្រាកដណាស់ អល់ឡោះមិនស្រឡាញ់ចំពោះជនក្បត់ដែលសាងបាបកម្មឡើយ ។

يَسۡتَخۡفُونَ مِنَ ٱلنَّاسِ وَلَا يَسۡتَخۡفُونَ مِنَ ٱللَّهِ وَهُوَ مَعَهُمۡ إِذۡ يُبَيِّتُونَ مَا لَا يَرۡضَىٰ مِنَ ٱلۡقَوۡلِۚ وَكَانَ ٱللَّهُ بِمَا يَعۡمَلُونَ مُحِيطًا (١٠٨)

១០៨-ពួកគេអាចរកវិធីបិទបាំង( អំពើអាក្រក់នានា) ពីមនុស្សបាន តែពួកគេមិនអាចរកវិធីបិទបាំងពីអល់ឡោះបានឡើយ ព្រោះទ្រង់នៅជាមួយពួកគេ( ដោយការដឹង) ខណៈដែលពួកគេបានរៀបចំគំរោងក្បត់នៅពេលយប់នូវអ្វីដែលទ្រង់មិនយល់ព្រម ។ ហើយអល់ឡោះដឹងជ្រួតជ្រាបអំពីអ្វីដែលពួកគេប្រព្រឹត្ត ។

هَٰٓأَنتُمۡ هَٰٓؤُلَآءِ جَٰدَلۡتُمۡ عَنۡهُمۡ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَا فَمَن يُجَٰدِلُ ٱللَّهَ عَنۡهُمۡ يَوۡمَ ٱلۡقِيَٰمَةِ

១០៩-ពួកអ្នកទាំងអស់នេះហើយជាអ្នកដែលបានជួយការពារពួកគេ( ពួកក្បត់) នៅក្នុងជីវិតលោកិយនេះ ។ តើអ្នកណាដែលអាចការពារពួកគេនៅចំពោះមុខអល់ឡោះនាថ្ងៃបរលោក? ឬអ្នកណា

أَم مَّن يَكُونُ عَلَيۡهِمۡ وَكِيلٗا ١٠٩

ដែលអាចគាំពារពួកគេ(អំពីទារុណកម្មរបស់អល់ឡោះ)បាន?

وَمَن يَعۡمَلۡ سُوٓءًا أَوۡ يَظۡلِمۡ نَفۡسَهُۥ ثُمَّ
يَسۡتَغۡفِرِ ٱللَّهَ يَجِدِ ٱللَّهَ غَفُورٗا رَّحِيمٗا ١١٠

១១០-ហើយអ្នកណាដែលប្រព្រឹត្តអំពើអាក្រក់ឬបំពានលើខ្លួនឯងផ្ទាល់(សាងបាបកម្ម) ក្រោយមកគេបានសុំអភ័យទោសពីអល់ឡោះនោះ គេប្រាកដជានឹងដឹងថា អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

وَمَن يَكۡسِبۡ إِثۡمٗا فَإِنَّمَا يَكۡسِبُهُۥ عَلَىٰ
نَفۡسِهِۦۚ وَكَانَ ٱللَّهُ عَلِيمًا حَكِيمٗا ١١١

១១១-ហើយអ្នកណាសាងបាបកម្ម អ្នកនោះពិតជាសាងបាបកម្មមកលើខ្លួនឯង។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

وَمَن يَكۡسِبۡ خَطِيٓـَٔةً أَوۡ إِثۡمٗا ثُمَّ يَرۡمِ بِهِۦ
بَرِيٓـٔٗا فَقَدِ ٱحۡتَمَلَ بُهۡتَٰنٗا وَإِثۡمٗا مُّبِينٗا ١١٢

១១២-ហើយអ្នកណាដែលប្រព្រឹត្តខុស ឬសាងបាបកម្ម ក្រោយមកគេទម្លាក់កំហុសនោះទៅលើអ្នកដែលគ្មានកំហុស គេពិតជាបានទទួលរងនូវការមូលបង្កាច់ និងបាបកម្មនោះវិញយ៉ាងច្បាស់លាស់។

وَلَوۡلَا فَضۡلُ ٱللَّهِ عَلَيۡكَ وَرَحۡمَتُهُۥ لَهَمَّت
طَّآئِفَةٞ مِّنۡهُمۡ أَن يُضِلُّوكَ وَمَا يُضِلُّونَ
إِلَّآ أَنفُسَهُمۡۖ وَمَا يَضُرُّونَكَ مِن شَيۡءٖۚ وَأَنزَلَ
ٱللَّهُ عَلَيۡكَ ٱلۡكِتَٰبَ وَٱلۡحِكۡمَةَ وَعَلَّمَكَ مَا
لَمۡ تَكُن تَعۡلَمُۚ وَكَانَ فَضۡلُ ٱللَّهِ عَلَيۡكَ
عَظِيمٗا ١١٣

១១៣-ហើយប្រសិនបើគ្មានការប្រោសប្រទានរបស់អល់ឡោះ និងការអាណិតស្រឡាញ់របស់ទ្រង់មកលើអ្នក(មូហាំម៉ាត់)ទេនោះ ប្រាកដជាក្រុមមួយក្នុងចំណោមពួកគេ(ពួកក្បត់)បានសម្រេចបំណងក្នុងការធ្វើឱ្យអ្នកវង្វេងជាមិនខាន។ ប៉ុន្តែពួកគេមិនអាចធ្វើឱ្យនរណាម្នាក់វង្វេងក្រៅពីខ្លួនរបស់ពួកគេឡើយ។ ហើយពួកគេក៏មិនអាចបង្កគ្រោះថ្នាក់ដល់អ្នកសូម្បីតែបន្តិចបានដែរ។ ហើយអល់ឡោះបានបញ្ចុះមកឱ្យអ្នកនូវគម្ពីរ(គួរអាន)និងភាពឈ្លាសវៃ ហើយទ្រង់បានបង្រៀនអ្នកនូវអ្វីដែលអ្នកមិនទាន់ដឹង។ ហើយការប្រោសប្រទានរបស់អល់ឡោះមកលើអ្នកគឺធំធេងបំផុត។

۞لَّا خَيۡرَ فِي كَثِيرٖ مِّن نَّجۡوَىٰهُمۡ إِلَّا مَنۡ أَمَرَ
بِصَدَقَةٍ أَوۡ مَعۡرُوفٍ أَوۡ إِصۡلَٰحِۭ بَيۡنَ ٱلنَّاسِۚ
وَمَن يَفۡعَلۡ ذَٰلِكَ ٱبۡتِغَآءَ مَرۡضَاتِ ٱللَّهِ
فَسَوۡفَ نُؤۡتِيهِ أَجۡرًا عَظِيمٗا ١١٤

១១៤-ចំពោះការខ្សឹបខ្សៀវភាគច្រើនរបស់ពួកគេគ្មានភាពល្អឡើយ លើកលែងតែនរណាដែលបានប្រើគេឱ្យបរិច្ចាគទានឬ(ប្រើគេ)ឱ្យធ្វើអំពើល្អ ឬការផ្សះផ្សារវាងមនុស្សលោកប៉ុណ្ណោះ។ ហើយអ្នកណាដែលធ្វើដូច្នោះដើម្បីចង់បានការយល់ព្រមពីអល់ឡោះ គឺយើងនឹងប្រទានឱ្យគេនូវផលបុណ្យដ៏ធំធេងបំផុត។

وَمَن يُشَاقِقِ ٱلرَّسُولَ مِنۢ بَعۡدِ مَا تَبَيَّنَ
لَهُ ٱلۡهُدَىٰ وَيَتَّبِعۡ غَيۡرَ سَبِيلِ ٱلۡمُؤۡمِنِينَ

១១៥-ហើយអ្នកណាប្រឆាំងនឹងអ្នកនាំសារបន្ទាប់ពីការពិតបានលាតត្រដាងចំពោះគេ ហើយគេដើរតាមមាគ៌ាផ្សេងពីមាគ៌ាអ្នកមានជំនឿនោះ យើងនឹងទុកឱ្យគេនៅលើមាគ៌ាដែលគេបានជ្រើសរើស

نُوَلِّهِۦ مَا تَوَلَّىٰ وَنُصۡلِهِۦ جَهَنَّمَۖ وَسَآءَتۡ مَصِيرًا ﴿١١٥﴾

ហើយយើងនឹងបញ្ចូលគេទៅក្នុងនរកជើហាន់ណាំ។ ហើយវាជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត។

إِنَّ ٱللَّهَ لَا يَغۡفِرُ أَن يُشۡرَكَ بِهِۦ وَيَغۡفِرُ مَا دُونَ ذَٰلِكَ لِمَن يَشَآءُۚ وَمَن يُشۡرِكۡ بِٱللَّهِ فَقَدۡ ضَلَّ ضَلَٰلَۢا بَعِيدًا ﴿١١٦﴾

១១៦-ពិតប្រាកដណាស់ អល់ឡោះមិនអភ័យទោសឱ្យអ្នកដែលធ្វើស្ហ៊ីរិកចំពោះទ្រង់ឡើយ។ តែទ្រង់នឹងអភ័យទោសចំពោះបាបកម្មផ្សេងពីនោះឱ្យអ្នកណាដែលទ្រង់មានចេតនា។ ហើយអ្នកណាធ្វើស្ហ៊ីរិកចំពោះអល់ឡោះ គេពិតជាបានវង្វេង(ពីមាគ៌ាត្រឹមត្រូវ)ដ៏សែនឆ្ងាយជាមិនខាន។

إِن يَدۡعُونَ مِن دُونِهِۦٓ إِلَّآ إِنَٰثٗا وَإِن يَدۡعُونَ إِلَّا شَيۡطَٰنٗا مَّرِيدٗا ﴿١١٧﴾

១១៧-ពួកគេមិនគោរពសក្ការៈនរណាផ្សេងពីអល់ឡោះឡើយ លើកលែងតែរូបបដិមាករប៉ុណ្ណោះ។ ហើយពួកគេក៏មិនគោរពសក្ការៈនរណាក្រៅពីស្ហៃតនដែលប្រឆាំងនោះដែរ។

لَّعَنَهُ ٱللَّهُۘ وَقَالَ لَأَتَّخِذَنَّ مِنۡ عِبَادِكَ نَصِيبٗا مَّفۡرُوضٗا ﴿١١٨﴾

១១៨-អល់ឡោះបានដាក់បណ្តាសាវា(ស្ហៃតន) ហើយវាបាននិយាយថាៈ ខ្ញុំពិតជានឹងយកចំណែកមួយដែលបានកំណត់(ចំណែកអាក្រក់)ពីខ្ញុំទាំងឡាយរបស់ទ្រង់។

وَلَأُضِلَّنَّهُمۡ وَلَأُمَنِّيَنَّهُمۡ وَلَأٓمُرَنَّهُمۡ فَلَيُبَتِّكُنَّ ءَاذَانَ ٱلۡأَنۡعَٰمِ وَلَأٓمُرَنَّهُمۡ فَلَيُغَيِّرُنَّ خَلۡقَ ٱللَّهِۚ وَمَن يَتَّخِذِ ٱلشَّيۡطَٰنَ وَلِيّٗا مِّن دُونِ ٱللَّهِ فَقَدۡ خَسِرَ خُسۡرَانٗا مُّبِينٗا ﴿١١٩﴾

១១៩-ហើយខ្ញុំប្រាកដជានឹងធ្វើឱ្យពួកគេវង្វេង និងបញ្ឆោតពួកគេឱ្យវើវវាយ ហើយនិងប្រើពួកគេឱ្យកាត់ស្លឹកត្រចៀកសត្វពាហនៈ[1] ព្រមទាំងខ្ញុំនឹងប្រើពួកគេឱ្យផ្លាស់ប្តូរធាតុដើមនៃការបង្កើតរបស់អល់ឡោះ(សាសនាអ៊ីស្លាម)។ ហើយអ្នកណាដែលទទួលយកស្ហៃតនធ្វើជាអ្នកគាំពារផ្សេងពីអល់ឡោះ ពិតប្រាកដណាស់ គេនឹងទទួលការខាតបង់យ៉ាងច្បាស់លាស់។

يَعِدُهُمۡ وَيُمَنِّيهِمۡۖ وَمَا يَعِدُهُمُ ٱلشَّيۡطَٰنُ إِلَّا غُرُورًا ﴿١٢٠﴾

១២០-ស្ហៃតនសន្យាជាមួយពួកគេ(ពួកដែលតាមវា) និងបញ្ឆោតពួកគេឱ្យវើវវាយ។ ហើយស្ហៃតនមិនបានសន្យាអ្វីជាមួយពួកគេក្រៅពីការបោកបញ្ឆោតឡើយ។

أُوْلَٰٓئِكَ مَأۡوَىٰهُمۡ جَهَنَّمُ وَلَا يَجِدُونَ عَنۡهَا

១២១-ពួកទាំងនោះ(ពួកតាមស្ហៃតន)ទីជម្រករបស់ពួកគេ គឺនរកជើហាន់ណាំ ហើយពួកគេគ្មានវិធីណាអាចគេចចេញពីវាបាន

១-ទំនៀមទំលាប់របស់អារ៉ាប់សម័យមុនមូហាំម៉ាត់ នៅពេលដែលពួកគេចង់គោរពសក្ការៈទៅចំពោះសត្វពាហនៈណាមួយ គេនឹងយកសត្វនោះមកកាត់ស្លឹកត្រចៀក ពេលនោះទើបពួកគេគោរពសក្ការៈចំពោះសត្វនោះ។ ដូច្នេះនៅក្នុងវាក្យខណ្ឌនេះ ការប្រើរបស់ស្ហៃតនឱ្យកាត់ស្លឹកត្រចៀកសត្វពាហនៈនោះចង់សំដៅឱ្យពួកគេគោរពសក្ការៈអ្វីផ្សេងពីអល់ឡោះ។

ឡើយ ។

១២២-បណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អនោះ យើងនឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេនៅក្នុងនោះជាអមតៈ ។ ការសន្យារបស់អល់ឡោះ គឺជាការពិត ។ តើនរណាដែលមានពាក្យសំដីពិតជាងអល់ឡោះទៀតនោះ?

១២៣-( ផលបុណ្យទាំងឡាយ ) វាពុំមែនអាស្រ័យទៅលើការស្រមើស្រមៃរបស់ពួកអ្នក( អ្នកមានជំនឿ ) ហើយក៏ពុំមែនជាការស្រមើស្រមៃរបស់ពួកអះលីគីតាបនោះដែរ ។ អ្នកណាប្រព្រឹត្តអំពើអាក្រក់ អ្នកនោះនឹងទទួលនូវការតបស្នងវិញដោយអំពើនោះ ហើយអ្នកនោះមិនអាចស្វែងរកអ្នកគាំពារឬអ្នកជំនួយសម្រាប់គេក្រៅពីអល់ឡោះបានឡើយ ។

១២៤-ហើយអ្នកណាសាងអំពើល្អ ទោះជាបុរសឬស្ត្រីក្ដី ដោយគេជាអ្នកមានជំនឿផងនោះ គឺអ្នកទាំងនោះនឹងបានចូលឋានសួគ៌ ហើយពួកគេមិនត្រូវគេបំពានសូម្បីតែបន្តិចក៏ដោយ ។

១២៥-តើអ្នកណាដែលល្អក្នុងសាសនាជាងអ្នកដែលបានប្រគល់ខ្លួនរបស់គេទៅចំពោះអល់ឡោះ ហើយគេគឺជាអ្នកធ្វើល្អ និងប្រតិបត្តិតាមសាសនារបស់អ៊ីព្រហ៊ីមដ៏ត្រឹមត្រូវនោះ? អល់ឡោះបានចាត់ទុកអ៊ីព្រហ៊ីមជាអ្នកជំនិត ។

១២៦-ហើយអ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលនៅលើផែនដី គឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ អល់ឡោះដឹងជ្រួតជ្រាបនូវអ្វីៗទាំងអស់ ។

១២៧-ពួកគេនឹងសុំអ្នក( មូហាំម៉ាត់ ) ឱ្យបកស្រាយអំពីច្បាប់ដែលទាក់ទងនឹងស្ត្រី ។ ចូរអ្នកពោលថាៈ អល់ឡោះនឹងបំភ្លឺដល់ពួកអ្នកអំពីច្បាប់របស់ពួកនាង និងអ្វីដែលត្រូវគេសូត្រប្រាប់ពួកអ្នកនៅក្នុងគម្ពីរដែលទាក់ទងនឹងក្មេងស្រីកំព្រាដែលពួកអ្នកមិនបានផ្ដល់ឱ្យពួកនាងនូវអ្វីដែលគេបានកំណត់ឱ្យពួកនាង ខណៈដែលពួក

مُحِيطًا ﴿١٢١﴾

وَٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ
سَنُدْخِلُهُمْ جَنَّٰتٍ تَجْرِى مِن تَحْتِهَا ٱلْأَنْهَٰرُ
خَٰلِدِينَ فِيهَآ أَبَدًا ۖ وَعْدَ ٱللَّهِ حَقًّا ۚ وَمَنْ
أَصْدَقُ مِنَ ٱللَّهِ قِيلًا ﴿١٢٢﴾

لَّيْسَ بِأَمَانِيِّكُمْ وَلَآ أَمَانِىِّ أَهْلِ ٱلْكِتَٰبِ ۗ
مَن يَعْمَلْ سُوٓءًا يُجْزَ بِهِۦ وَلَا يَجِدْ لَهُۥ مِن
دُونِ ٱللَّهِ وَلِيًّا وَلَا نَصِيرًا ﴿١٢٣﴾

وَمَن يَعْمَلْ مِنَ ٱلصَّٰلِحَٰتِ مِن ذَكَرٍ أَوْ
أُنثَىٰ وَهُوَ مُؤْمِنٌ فَأُو۟لَٰٓئِكَ يَدْخُلُونَ ٱلْجَنَّةَ
وَلَا يُظْلَمُونَ نَقِيرًا ﴿١٢٤﴾

وَمَنْ أَحْسَنُ دِينًا مِّمَّنْ أَسْلَمَ وَجْهَهُۥ لِلَّهِ وَهُوَ
مُحْسِنٌ وَٱتَّبَعَ مِلَّةَ إِبْرَٰهِيمَ حَنِيفًا ۗ وَٱتَّخَذَ ٱللَّهُ
إِبْرَٰهِيمَ خَلِيلًا ﴿١٢٥﴾

وَلِلَّهِ مَا فِى ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ ۚ
وَكَانَ ٱللَّهُ بِكُلِّ شَىْءٍ مُّحِيطًا ﴿١٢٦﴾

وَيَسْتَفْتُونَكَ فِى ٱلنِّسَآءِ ۖ قُلِ ٱللَّهُ يُفْتِيكُمْ
فِيهِنَّ وَمَا يُتْلَىٰ عَلَيْكُمْ فِى ٱلْكِتَٰبِ فِى
يَتَٰمَى ٱلنِّسَآءِ ٱلَّٰتِى لَا تُؤْتُونَهُنَّ مَا كُتِبَ
لَهُنَّ وَتَرْغَبُونَ أَن تَنكِحُوهُنَّ

អ្នកមានបំណងចង់រៀបអាពាហ៍ពិពាហ៍ជាមួយពួកនាង និងច្បាប់ដែលទាក់ទងជាមួយកុមារដែលមានភាពទន់ខ្សោយ ។ ហើយពួកអ្នកត្រូវទទួលខុសត្រូវចំពោះក្មេងកំព្រានោះដោយយុត្តិធម៌ ។ ហើយអ្វីដែលពួកអ្នកសាងអំពីប្រការល្អនោះ គឺពិតប្រាកដណាស់ អល់ឡោះដឹងបំផុតចំពោះវា ។

وَٱلۡمُسۡتَضۡعَفِينَ مِنَ ٱلۡوِلۡدَٰنِ وَأَن تَقُومُواْ لِلۡيَتَٰمَىٰ بِٱلۡقِسۡطِۚ وَمَا تَفۡعَلُواْ مِنۡ خَيۡرٖ فَإِنَّ ٱللَّهَ كَانَ بِهِۦ عَلِيمٗا ١٢٧

១២៨-ហើយប្រសិនបើស្ត្រីមានការភ័យខ្លាចនូវការស្អប់ខ្ពើម ឬការបោះបង់ពីស្វាមីរបស់នាង គឺគ្មានទោសពៃរ៍អ្វីចំពោះគេទាំងពីរក្នុងការផ្សះផ្សារវាងគេទាំងពីរឱ្យល្អឡើងវិញឡើយ ។ ហើយការផ្សះផ្សានោះវាជាការប្រសើរបំផុត ព្រោះបុគ្គលគ្រប់រូបតែងតែមានភាពកំណាញ់នៅក្នុងខ្លួន ( ដូច្នេះគួរតែកាត់បន្ថយភាពកំណាញ់នោះ) ។ តែប្រសិនបើពួកអ្នកធ្វើល្អ និងកោតខ្លាចអល់ឡោះវិញ ពិតប្រាកដណាស់ អល់ឡោះដឹងបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

وَإِنِ ٱمۡرَأَةٌ خَافَتۡ مِنۢ بَعۡلِهَا نُشُوزًا أَوۡ إِعۡرَاضٗا فَلَا جُنَاحَ عَلَيۡهِمَآ أَن يُصۡلِحَا بَيۡنَهُمَا صُلۡحٗاۚ وَٱلصُّلۡحُ خَيۡرٞۗ وَأُحۡضِرَتِ ٱلۡأَنفُسُ ٱلشُّحَّۚ وَإِن تُحۡسِنُواْ وَتَتَّقُواْ فَإِنَّ ٱللَّهَ كَانَ بِمَا تَعۡمَلُونَ خَبِيرٗا ١٢٨

១២៩-ហើយពួកអ្នក( ស្វាមី) នឹងមិនអាចផ្តល់ភាពយុត្តិធម៌រវាងបណ្តាស្ត្រី( ជាភរិយា) ទាំងនោះឡើយ បើទោះជាពួកអ្នកខិតខំយ៉ាងណាក៏ដោយ ។ ដូច្នេះចូរពួកអ្នកកុំលំអៀងម្ខាងៗហួសពេក ដោយពួកអ្នកបោះបង់នាង( ភរិយាដែលមិនពេញចិត្ត) ចោល ដូចជាវត្ថុដែលគេព្យួរចោលនោះឡើយ ។ តែប្រសិនបើពួកអ្នកផ្សះផ្សាគ្នា និង កោតខ្លាចចំពោះអល់ឡោះ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَلَن تَسۡتَطِيعُوٓاْ أَن تَعۡدِلُواْ بَيۡنَ ٱلنِّسَآءِ وَلَوۡ حَرَصۡتُمۡۖ فَلَا تَمِيلُواْ كُلَّ ٱلۡمَيۡلِ فَتَذَرُوهَا كَٱلۡمُعَلَّقَةِۚ وَإِن تُصۡلِحُواْ وَتَتَّقُواْ فَإِنَّ ٱللَّهَ كَانَ غَفُورٗا رَّحِيمٗا ١٢٩

១៣០-ប៉ុន្តែប្រសិនបើគេទាំងពីរបែកបាក់គ្នា( លែងលះគ្នា) វិញនោះ អល់ឡោះនឹងផ្គត់ផ្គង់ដល់គេម្នាក់ៗនូវលាភសក្ការៈដ៏ទូលំទូលាយរបស់ទ្រង់ ។ អល់ឡោះមហាទូលំទូលាយ មហាគតិបណ្ឌិត ។

وَإِن يَتَفَرَّقَا يُغۡنِ ٱللَّهُ كُلّٗا مِّن سَعَتِهِۦۚ وَكَانَ ٱللَّهُ وَٰسِعًا حَكِيمٗا ١٣٠

១៣១-ហើយអ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលនៅលើផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ហើយពិតប្រាកដណាស់ យើងបានបង្គាប់ប្រើដល់បណ្តាអ្នកដែលគេបានផ្តល់គម្ពីរឱ្យមុនពួកអ្នក និងពួកអ្នកឱ្យកោតខ្លាចអល់ឡោះ ។ តែប្រសិនបើពួកអ្នកប្រឆាំងវិញ ពិតប្រាកដណាស់អ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលនៅលើផែនដី គឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ហើយ

وَلِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۗ وَلَقَدۡ وَصَّيۡنَا ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ مِن قَبۡلِكُمۡ وَإِيَّاكُمۡ أَنِ ٱتَّقُواْ ٱللَّهَۚ وَإِن تَكۡفُرُواْ فَإِنَّ لِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۚ وَكَانَ ٱللَّهُ غَنِيًّا

អល់ឡោះមានអ្វីគ្រប់យ៉ាង ជាទីកោតសរសើរបំផុត។

១៣២-អ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលនៅលើផែនដី គឺជាកម្មសិទ្ធិរបស់អល់ឡោះ។ គ្រប់គ្រាន់ហើយអល់ឡោះជាអ្នកដែលត្រូវគេផ្តល់ទំនុកចិត្ត។

១៣៣-ឱមនុស្សលោក! ប្រសិនបើអល់ឡោះមានចេតនា ទ្រង់នឹងបំផ្លាញពួកអ្នក ហើយទ្រង់នឹងនាំក្រុមផ្សេងមកជំនួសវិញ។ ហើយអល់ឡោះមានអានុភាពបំផុតចំពោះរឿងនេះ។

១៣៤-អ្នកណាហើយចង់បានផលបុណ្យនៅក្នុងលោកិយនេះ គឺអល់ឡោះមានផលបុណ្យទាំងក្នុងលោកិយ និងបរលោក។ ហើយអល់ឡោះមហាឮ មហាឃើញ។

១៣៥-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកប្រកាន់ឱ្យបានខ្ជាប់ខ្ជួននូវភាពយុត្តិធម៌ ដូចជាការធ្វើសាក្សីចំពោះអល់ឡោះ សូម្បីតែ(ធ្វើសាក្សី)លើខ្លួនឯង ឬឪពុកម្តាយ និងញាតិសន្តានក៏ដោយ។ ទោះបីគេជាអ្នកមាន ឬជាអ្នកក្រក៏ដោយគឺអល់ឡោះជាអ្នកដឹងបំផុតចំពោះគេទាំងពីរនោះ។ ដូច្នេះចូរពួកអ្នកកុំប្រព្រឹត្តតាមទំនើងចិត្តដែលនាំឱ្យឃ្លាតឆ្ងាយពីភាពយុត្តិធម៌ឱ្យសោះ។ តែប្រសិនបើពួកអ្នកកែប្រែ(ការពិតក្នុងការធ្វើសាក្សី) ឬបដិសេធវិញនោះ ពិតប្រាកដណាស់អល់ឡោះដឹងបំផុតនូវអ្វីៗដែលពួកអ្នកប្រព្រឹត្ត។

១៣៦-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកជឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ និងគម្ពីរដែលទ្រង់បានបញ្ចុះទៅលើអ្នកនាំសាររបស់ទ្រង់ ហើយនិងគម្ពីរដែលទ្រង់បានបញ្ចុះពីមុនមក។ អ្នកណាដែលប្រឆាំងនឹងអល់ឡោះនិងបណ្តាម៉ាឡាអ៊ីកាត់របស់ទ្រង់ និងបណ្តាគម្ពីររបស់ទ្រង់ និងបណ្តាអ្នកនាំសាររបស់ទ្រង់ និងថ្ងៃបរលោក អ្នកនោះពិតជាបានវង្វេង(ពីមាគ៌ាដែលត្រឹមត្រូវ)ដ៏សែនឆ្ងាយ។

១៣៧-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿ(ចំពោះអល់ឡោះ) ក្រោយមកពួកគេប្រឆាំង ក្រោយមកមានជំនឿវិញ

حَمِيدًا ﴿١٣١﴾
وَلِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۚ وَكَفَىٰ
بِٱللَّهِ وَكِيلًا ﴿١٣٢﴾
إِن يَشَأۡ يُذۡهِبۡكُمۡ أَيُّهَا ٱلنَّاسُ وَيَأۡتِ
بِـَٔاخَرِينَۚ وَكَانَ ٱللَّهُ عَلَىٰ ذَٰلِكَ قَدِيرًا ﴿١٣٣﴾
مَّن كَانَ يُرِيدُ ثَوَابَ ٱلدُّنۡيَا فَعِندَ ٱللَّهِ
ثَوَابُ ٱلدُّنۡيَا وَٱلۡأٓخِرَةِۚ وَكَانَ ٱللَّهُ سَمِيعَۢا
بَصِيرًا ﴿١٣٤﴾
۞ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ كُونُواْ قَوَّٰمِينَ بِٱلۡقِسۡطِ
شُهَدَآءَ لِلَّهِ وَلَوۡ عَلَىٰٓ أَنفُسِكُمۡ أَوِ ٱلۡوَٰلِدَيۡنِ
وَٱلۡأَقۡرَبِينَۚ إِن يَكُنۡ غَنِيًّا أَوۡ فَقِيرًا فَٱللَّهُ
أَوۡلَىٰ بِهِمَاۖ فَلَا تَتَّبِعُواْ ٱلۡهَوَىٰٓ أَن تَعۡدِلُواْۚ
وَإِن تَلۡوُۥٓاْ أَوۡ تُعۡرِضُواْ فَإِنَّ ٱللَّهَ كَانَ بِمَا
تَعۡمَلُونَ خَبِيرًا ﴿١٣٥﴾
يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ ءَامِنُواْ بِٱللَّهِ وَرَسُولِهِۦ
وَٱلۡكِتَٰبِ ٱلَّذِي نَزَّلَ عَلَىٰ رَسُولِهِۦ
وَٱلۡكِتَٰبِ ٱلَّذِيٓ أَنزَلَ مِن قَبۡلُۚ وَمَن
يَكۡفُرۡ بِٱللَّهِ وَمَلَٰٓئِكَتِهِۦ وَكُتُبِهِۦ وَرُسُلِهِۦ
وَٱلۡيَوۡمِ ٱلۡأٓخِرِ فَقَدۡ ضَلَّ ضَلَٰلَۢا بَعِيدًا ﴿١٣٦﴾
إِنَّ ٱلَّذِينَ ءَامَنُواْ ثُمَّ كَفَرُواْ ثُمَّ ءَامَنُواْ ثُمَّ

كَفَرُواْ ثُمَّ ٱزۡدَادُواْ كُفۡرٗا لَّمۡ يَكُنِ ٱللَّهُ لِيَغۡفِرَ
لَهُمۡ وَلَا لِيَهۡدِيَهُمۡ سَبِيلَۢا ١٣٧

ក្រោយមកក៏ប្រឆាំងវិញទៀត ក្រោយមកពួកគេក៏បង្កើននូវការ ប្រឆាំងថែមទៀត អល់ឡោះនឹងមិនអភ័យទោសដល់ពួកគេ និង មិនចង្អុលបង្ហាញផ្លូវដល់ពួកគេជាដាច់ខាត។

بَشِّرِ ٱلۡمُنَٰفِقِينَ بِأَنَّ لَهُمۡ عَذَابًا أَلِيمًا ١٣٨

១៣៨-ចូរអ្នក(មូហាំមាត់)ផ្តល់ដំណឹងដល់ពួកពុតត្បុតថា: ពិតប្រាកដណាស់ ពួកគេនឹងទទួលទារុណកម្មយ៉ាងឈឺចាប់បំផុត។

ٱلَّذِينَ يَتَّخِذُونَ ٱلۡكَٰفِرِينَ أَوۡلِيَآءَ مِن دُونِ
ٱلۡمُؤۡمِنِينَۚ أَيَبۡتَغُونَ عِندَهُمُ ٱلۡعِزَّةَ فَإِنَّ
ٱلۡعِزَّةَ لِلَّهِ جَمِيعٗا ١٣٩

១៣៩-គឺពួកដែលយកពួកគ្មានជំនឿធ្វើជាមិត្តភក្តិជិតស្និទ្ធ(ជា អ្នកការពារនិងអ្នកជួយ)ផ្សេងពីបណ្តាអ្នកមានជំនឿ។ តើពួកគេ ស្វែងរកភាពឧត្តុង្គឧត្តមពីពួកទាំងនោះឬ? ពិតប្រាកដណាស់ ភាព ឧត្តុង្គឧត្តមទាំងឡាយគឺជាកម្មសិទ្ធិរបស់អល់ឡោះប៉ុណ្ណោះ ។

وَقَدۡ نَزَّلَ عَلَيۡكُمۡ فِي ٱلۡكِتَٰبِ أَنۡ إِذَا سَمِعۡتُمۡ
ءَايَٰتِ ٱللَّهِ يُكۡفَرُ بِهَا وَيُسۡتَهۡزَأُ بِهَا فَلَا تَقۡعُدُواْ
مَعَهُمۡ حَتَّىٰ يَخُوضُواْ فِي حَدِيثٍ غَيۡرِهِۦٓۚ إِنَّكُمۡ
إِذٗا مِّثۡلُهُمۡۗ إِنَّ ٱللَّهَ جَامِعُ ٱلۡمُنَٰفِقِينَ
وَٱلۡكَٰفِرِينَ فِي جَهَنَّمَ جَمِيعًا ١٤٠

១៤០-ហើយពិតប្រាកដណាស់ អល់ឡោះបានបញ្ចុះទៅលើពួក អ្នកនៅក្នុងគម្ពីរ(គួរអាន)នេះថា: ពិតប្រាកដណាស់ នៅពេលដែល ពួកអ្នកបានឮអាយ៉ាត់ៗរបស់អល់ឡោះដែលត្រូវគេ(ពួកគ្មានជំនឿ) បដិសេធ និងសើចចំអកចំពោះវានោះ ចូរពួកអ្នកកុំអង្គុយជាមួយ ពួកទាំងនោះឱ្យសោះ ទាល់តែពួកគេលើកទៅនិយាយពីរឿងផ្សេង ពីនេះ។ (បើមិនដូច្នោះទេ) ពិតប្រាកដណាស់ ពួកអ្នកក៏ដូចពួកគេ ដែរ។ ពិតប្រាកដណាស់ អល់ឡោះនឹងប្រមូលផ្តុំពួកពុតត្បុត និងពួក ប្រឆាំងទាំងអស់ដាក់ក្នុងនរកជើហាន់ណាំ។

ٱلَّذِينَ يَتَرَبَّصُونَ بِكُمۡ فَإِن كَانَ لَكُمۡ فَتۡحٞ مِّنَ
ٱللَّهِ قَالُوٓاْ أَلَمۡ نَكُن مَّعَكُمۡ وَإِن كَانَ لِلۡكَٰفِرِينَ
نَصِيبٞ قَالُوٓاْ أَلَمۡ نَسۡتَحۡوِذۡ عَلَيۡكُمۡ
وَنَمۡنَعۡكُم مِّنَ ٱلۡمُؤۡمِنِينَۚ فَٱللَّهُ يَحۡكُمُ
بَيۡنَكُمۡ يَوۡمَ ٱلۡقِيَٰمَةِۗ وَلَن يَجۡعَلَ ٱللَّهُ
لِلۡكَٰفِرِينَ عَلَى ٱلۡمُؤۡمِنِينَ سَبِيلًا ١٤١

១៤១-គឺពួកដែលកំពុងរង់ចាំពួកអ្នក(អ្នកមានជំនឿ) ប្រសិន បើពួកអ្នកទទួលបានជោគជ័យអំពីអល់ឡោះ ពួកគេនិយាយថា: តើ ពួកយើងមិនបានរួមចំណែក(ធ្វើសង្គ្រាម)ជាមួយពួកអ្នកទេឬ? តែ នៅពេលដែលពួកគ្មានជំនឿទទួលបានជ័យជំនះវិញនោះ ពួកគេ និយាយថា: តើពួកយើងមិនបានជួយពួកអ្នកនិងការពារពួកអ្នកអំពី ពួកមានជំនឿទេឬ? អល់ឡោះនឹងកាត់សេចក្តីរវាងពួកអ្នកនៅថ្ងៃ បរលោក។ ហើយអល់ឡោះមិនផ្តល់ឱ្យពួកគ្មានជំនឿនូវមាគ៌ាជោគ-ជ័យលើបណ្តាអ្នកមានជំនឿឡើយ។

إِنَّ ٱلۡمُنَٰفِقِينَ يُخَٰدِعُونَ ٱللَّهَ وَهُوَ خَٰدِعُهُمۡ
وَإِذَا قَامُوٓاْ إِلَى ٱلصَّلَوٰةِ قَامُواْ كُسَالَىٰ يُرَآءُونَ

១៤២-ពិតប្រាកដណាស់ ពួកពុតត្បុតទាំងនោះកំពុងតែបោក បញ្ឆោតអល់ឡោះ ប៉ុន្តែទ្រង់ទេជាអ្នកបោកបញ្ឆោតពួកគេនោះ។ ហើយនៅពេលដែលពួកគេក្រោកឈរសឡាត ពួកគេក្រោកឈរ

ٱلنَّاسَ وَلَا يَذۡكُرُونَ ٱللَّهَ إِلَّا قَلِيلٗا ﴿١٤٢﴾

ដោយខ្ជិលច្រអូស ដោយពួកគេចង់ឱ្យមនុស្សមើលឃើញប៉ុណ្ណោះ។ ហើយពួកគេមិនរំលឹកចំពោះអល់ឡោះឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ។

مُّذَبۡذَبِينَ بَيۡنَ ذَٰلِكَ لَآ إِلَىٰ هَٰٓؤُلَآءِ وَلَآ إِلَىٰ هَٰٓؤُلَآءِۚ وَمَن يُضۡلِلِ ٱللَّهُ فَلَن تَجِدَ لَهُۥ سَبِيلٗا ﴿١٤٣﴾

១៤៣-ពួកគេមានការស្ទាក់ស្ទើរអំពីបញ្ហានេះ ដោយពួកគេមិនចូលជាមួយពួកនេះ(ពួកមានជំនឿ) ហើយក៏មិនចូលជាមួយពួកនោះ(ពួកគ្មានជំនឿ)ដែរ។ ហើយអ្នកណាដែលអល់ឡោះធ្វើឱ្យវង្វេង គឺអ្នក(មូហាំម៉ាត់)នឹងមិនអាចមានផ្លូវណាមួយ(ការចង្អុលបង្ហាញ)សម្រាប់គេឡើយ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَتَّخِذُواْ ٱلۡكَٰفِرِينَ أَوۡلِيَآءَ مِن دُونِ ٱلۡمُؤۡمِنِينَۚ أَتُرِيدُونَ أَن تَجۡعَلُواْ لِلَّهِ عَلَيۡكُمۡ سُلۡطَٰنٗا مُّبِينًا ﴿١٤٤﴾

១៤៤-ឱបណ្ដាអ្នកមានជំនឿ! ចូរពួកអ្នកកុំយកពួកប្រឆាំងធ្វើជាមិត្តភ័ក្ដជិតស្និទ្ធ(អ្នកគាំពារ) ផ្សេងពីបណ្ដាអ្នកដែលមានជំនឿឱ្យសោះ។ តើពួកអ្នកចង់បង្កើតភស្តុតាងដ៏ច្បាស់លាស់ណាមួយសម្រាប់អល់ឡោះ(ដើម្បីធ្វើទារុណកម្ម) មកលើពួកអ្នកឬ?

إِنَّ ٱلۡمُنَٰفِقِينَ فِي ٱلدَّرۡكِ ٱلۡأَسۡفَلِ مِنَ ٱلنَّارِ وَلَن تَجِدَ لَهُمۡ نَصِيرًا ﴿١٤٥﴾

១៤៥-ពិតប្រាកដណាស់ ពួកពុតត្បុតទាំងនោះនឹងស្ថិតនៅក្នុងបាតក្រោមបង្អស់នៃឋាននរក ហើយអ្នក(មូហាំម៉ាត់)នឹងមិនឃើញអ្នកណាម្នាក់ជួយពួកគេឡើយ។

إِلَّا ٱلَّذِينَ تَابُواْ وَأَصۡلَحُواْ وَٱعۡتَصَمُواْ بِٱللَّهِ وَأَخۡلَصُواْ دِينَهُمۡ لِلَّهِ فَأُوْلَٰٓئِكَ مَعَ ٱلۡمُؤۡمِنِينَۖ وَسَوۡفَ يُؤۡتِ ٱللَّهُ ٱلۡمُؤۡمِنِينَ أَجۡرًا عَظِيمٗا ﴿١٤٦﴾

១៤៦-លើកលែងតែអ្នកដែលបានសារភាពកំហុស និងកែខ្លួន និងប្រកាន់ខ្ជាប់នឹងមាគ៌ារបស់អល់ឡោះ ហើយនិងស្មោះសចំពោះអល់ឡោះ(ក្នុងការអនុវត្តន៏)សាសនារបស់ពួកគេ គឺពួកគេទាំងនោះហើយដែលស្ថិតនៅជាមួយបណ្ដាអ្នកដែលមានជំនឿ។ ហើយអល់ឡោះនឹងប្រទានឱ្យបណ្ដាអ្នកមានជំនឿនូវផលបុណ្យដ៏ធំធេង។

مَّا يَفۡعَلُ ٱللَّهُ بِعَذَابِكُمۡ إِن شَكَرۡتُمۡ وَءَامَنتُمۡۚ وَكَانَ ٱللَّهُ شَاكِرًا عَلِيمٗا ﴿١٤٧﴾

១៤៧-តើអល់ឡោះធ្វើទារុណកម្មពួកអ្នកយ៉ាងដូចម្ដេច បើពួកអ្នកបានដឹងគុណ និងមានជំនឿហើយនោះ? ហើយអល់ឡោះមហាដឹងគុណ មហាដឹង។

۞ لَّا يُحِبُّ ٱللَّهُ ٱلۡجَهۡرَ بِٱلسُّوٓءِ مِنَ ٱلۡقَوۡلِ إِلَّا مَن ظُلِمَۚ وَكَانَ ٱللَّهُ سَمِيعًا عَلِيمًا ﴿١٤٨﴾

១៤៨-អល់ឡោះមិនស្រឡាញ់ការលាតត្រដាងនូវពាក្យសំដីអាក្រក់ឡើយ លើកលែងតែអ្នកដែលត្រូវបានគេបំពានប៉ុណ្ណោះ។ ហើយអល់ឡោះមហាឮ មហាដឹង។

إِن تُبۡدُواْ خَيۡرًا أَوۡ تُخۡفُوهُ أَوۡ تَعۡفُواْ عَن سُوٓءٖ

១៤៩-ប្រសិនបើពួកអ្នកលាតត្រដាងប្រការល្អ ឬលាក់បាំងវា ឬក៏អធ្យាស្រ័យអំពីប្រការអាក្រក់នោះ ពិតប្រាកដណាស់អល់ឡោះ

فَإِنَّ ٱللَّهَ كَانَ عَفُوًّا قَدِيرًا ﴿١٤٩﴾

មហាអធ្យាស្រ័យ មហាមានអានុភាព។

إِنَّ ٱلَّذِينَ يَكۡفُرُونَ بِٱللَّهِ وَرُسُلِهِۦ
وَيُرِيدُونَ أَن يُفَرِّقُواْ بَيۡنَ ٱللَّهِ وَرُسُلِهِۦ
وَيَقُولُونَ نُؤۡمِنُ بِبَعۡضٖ وَنَكۡفُرُ بِبَعۡضٖ
وَيُرِيدُونَ أَن يَتَّخِذُواْ بَيۡنَ ذَٰلِكَ سَبِيلًا ﴿١٥٠﴾

១៥០-ពិតប្រាកដណាស់ ពួកដែលប្រឆាំងនឹងអល់ឡោះ និងបណ្តាអ្នកនាំសាររបស់ទ្រង់ ហើយពួកគេចង់បែងចែករវាងអល់ឡោះ និងបណ្តាអ្នកនាំសាររបស់ទ្រង់ ហើយពួកគេនិយាយថាៈ ពួកយើងមានជំនឿលើអ្នកនាំសារមួយចំនួននិងបដិសេធមួយចំនួន។ ហើយពួកគេចង់ជ្រើសរើសយកមាគ៌ាមួយរវាងរឿងនោះ (មានជំនឿ និងគ្មានជំនឿ)។

أُوْلَٰٓئِكَ هُمُ ٱلۡكَٰفِرُونَ حَقّٗاۚ وَأَعۡتَدۡنَا
لِلۡكَٰفِرِينَ عَذَابٗا مُّهِينٗا ﴿١٥١﴾

១៥១-ពួកគេទាំងនោះ គឺជាពួកដែលប្រឆាំងយ៉ាងពិតប្រាកដ។ ហើយយើងបានរៀបចំសម្រាប់ពួកប្រឆាំងទាំងនោះនូវទារុណកម្មយ៉ាងអាម៉ាស់បំផុត។

وَٱلَّذِينَ ءَامَنُواْ بِٱللَّهِ وَرُسُلِهِۦ وَلَمۡ يُفَرِّقُواْ بَيۡنَ
أَحَدٖ مِّنۡهُمۡ أُوْلَٰٓئِكَ سَوۡفَ يُؤۡتِيهِمۡ أُجُورَهُمۡۚ
وَكَانَ ٱللَّهُ غَفُورٗا رَّحِيمٗا ﴿١٥٢﴾

១៥២-រីឯបណ្តាអ្នកដែលមានជំនឿលើអល់ឡោះនិងបណ្តាអ្នកនាំសាររបស់ទ្រង់ ហើយពួកគេមិនបានបែងចែករវាងអ្នកណាម្នាក់ក្នុងចំណោមពួកគេ(អ្នកនាំសារ)ទេនោះ អ្នកទាំងនោះអល់ឡោះនឹងប្រទានឱ្យពួកគេនូវផលបុណ្យរបស់ពួកគេ។ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

يَسۡـَٔلُكَ أَهۡلُ ٱلۡكِتَٰبِ أَن تُنَزِّلَ عَلَيۡهِمۡ كِتَٰبٗا
مِّنَ ٱلسَّمَآءِۚ فَقَدۡ سَأَلُواْ مُوسَىٰٓ أَكۡبَرَ مِن
ذَٰلِكَ فَقَالُوٓاْ أَرِنَا ٱللَّهَ جَهۡرَةٗ فَأَخَذَتۡهُمُ
ٱلصَّٰعِقَةُ بِظُلۡمِهِمۡۚ ثُمَّ ٱتَّخَذُواْ ٱلۡعِجۡلَ مِنۢ
بَعۡدِ مَا جَآءَتۡهُمُ ٱلۡبَيِّنَٰتُ فَعَفَوۡنَا عَن ذَٰلِكَۚ
وَءَاتَيۡنَا مُوسَىٰ سُلۡطَٰنٗا مُّبِينٗا ﴿١٥٣﴾

១៥៣-ពួកអះលីគីតាបនឹងសុំអ្នក(មូហាំម៉ាត់)ឱ្យបញ្ចុះគម្ពីរមួយពីលើមេឃឱ្យពួកគេ។ ជាការពិតណាស់ កាលពីមុនពួកគេបានសុំមូសានូវប្រការមួយធំជាងនេះទៅទៀត ដោយពួកគេបាននិយាយថាៈ សូមអ្នកបង្ហាញដល់ពួកយើងឱ្យឃើញអល់ឡោះដោយផ្ទាល់ភ្នែកផង។ ពេលនោះរន្ទះក៏បានបាញ់(សម្លាប់)ពួកគេភ្លាមដោយសារការបំពានរបស់ពួកគេ។ ក្រោយមកពួកគេបានយករូបសំណាកកូនគោមកគោរពសក្ការៈបន្ទាប់ពីមានភស្តុតាងជាច្រើនបានមកដល់ពួកគេ។ ក្រោយមកយើងក៏បានអធ្យាស្រ័យ(ដល់ពួកគេ)អំពីបញ្ហានេះ។ ហើយយើងបានប្រទានឱ្យមូសានូវភស្តុតាងដ៏ជាក់ច្បាស់ ។

وَرَفَعۡنَا فَوۡقَهُمُ ٱلطُّورَ بِمِيثَٰقِهِمۡ وَقُلۡنَا لَهُمُ
ٱدۡخُلُواْ ٱلۡبَابَ سُجَّدٗا وَقُلۡنَا لَهُمۡ لَا تَعۡدُواْ فِي
ٱلسَّبۡتِ وَأَخَذۡنَا مِنۡهُم مِّيثَٰقًا غَلِيظٗا ﴿١٥٤﴾

១៥៤-ហើយយើងបានលើកភ្នំតួរដាក់ពីលើពួកគេដោយសារ(មិនអនុវត្ត)ការសន្យារបស់ពួកគេ ហើយយើងបានមានបន្ទូលទៅកាន់ពួកគេថាៈ ចូរពួកអ្នកចូលតាមទ្វារនេះ(ទ្វារវិហារពិសិដ្ឋ)ដោយឱនលំទោន។ ហើយយើងបានបញ្ជាទៅកាន់ពួកគេថាៈ ចូរពួកអ្នក

កុំបំពាន(ដោយទៅនេសាទ)នៅថ្ងៃសៅរ៍ ។ ហើយយើងក៏បានទទួលពីពួកគេនូវកិច្ចសន្យាដ៏ម៉ឺងម៉ាត់ ។

فَبِمَا نَقْضِهِم مِّيثَٰقَهُمْ وَكُفْرِهِم بِـَٔايَٰتِ ٱللَّهِ وَقَتْلِهِمُ ٱلْأَنۢبِيَآءَ بِغَيْرِ حَقٍّ وَقَوْلِهِمْ قُلُوبُنَا غُلْفٌۢ ۚ بَلْ طَبَعَ ٱللَّهُ عَلَيْهَا بِكُفْرِهِمْ فَلَا يُؤْمِنُونَ إِلَّا قَلِيلًا ﴿١٥٥﴾

១៥៥-(អល់ឡោះបានធ្វើឱ្យពួកគេក្លាយជាសត្វស្វា) ដោយសារតែពួកគេបានក្បត់កិច្ចសន្យារបស់ពួកគេ ហើយពួកគេបានប្រឆាំងនឹងអាយ៉ាត់ៗរបស់អល់ឡោះ និងបានសម្លាប់បណ្ដាណាពីដោយអយុត្តិធម៌ និងដោយសារពាក្យសំដីរបស់ពួកគេថាៈ ចិត្តរបស់ពួកយើងត្រូវបានបិទភ្ជិត ។ ផ្ទុយទៅវិញ អល់ឡោះបានបោះត្រាភ្ជិតទៅលើវាដោយសារការប្រឆាំងរបស់ពួកគេ ។ ដូច្នេះពួកគេគ្មានជំនឿឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ ។

وَبِكُفْرِهِمْ وَقَوْلِهِمْ عَلَىٰ مَرْيَمَ بُهْتَٰنًا عَظِيمًا ﴿١٥٦﴾

១៥៦-ហើយដោយសារតែការប្រឆាំងរបស់ពួកគេ និងពាក្យសំដីចោទប្រកាន់របស់ពួកគេទៅលើម៉ារយ៉ាំដោយការមួលបង្កាច់ដ៏ធ្ងន់ធ្ងរ ។

وَقَوْلِهِمْ إِنَّا قَتَلْنَا ٱلْمَسِيحَ عِيسَى ٱبْنَ مَرْيَمَ رَسُولَ ٱللَّهِ وَمَا قَتَلُوهُ وَمَا صَلَبُوهُ وَلَٰكِن شُبِّهَ لَهُمْ ۚ وَإِنَّ ٱلَّذِينَ ٱخْتَلَفُوا۟ فِيهِ لَفِى شَكٍّ مِّنْهُ ۚ مَا لَهُم بِهِۦ مِنْ عِلْمٍ إِلَّا ٱتِّبَاعَ ٱلظَّنِّ ۚ وَمَا قَتَلُوهُ يَقِينًۢا ﴿١٥٧﴾

១៥៧-និងដោយសារតែពាក្យសំដីរបស់ពួកគេថាៈ ពិតប្រាកដណាស់ ពួកយើងបានសម្លាប់ម៉ាសៀហអ៊ីសាកូនម៉ារយ៉ាំដែលជាអ្នកនាំសាររបស់អល់ឡោះ ខណៈដែលពួកគេមិនបានសម្លាប់គាត់ និងមិនបានចងឆ្កាងគាត់ឡើយ តែទ្រង់បានប្រដូចបុរសម្នាក់នឹងអ៊ីសាដល់ពួកគេ ។ ពិតប្រាកដណាស់ ពួកដែលបានខ្វែងយោបល់គ្នាក្នុងរឿងនេះ ពិតជាស្ថិតនៅក្នុងភាពសង្ស័យអំពីវា ។ ពួកគេគ្មានចំណេះដឹងនៅក្នុងរឿងនេះឡើយ លើកលែងតែតាមការស្មានប៉ុណ្ណោះ ។ ហើយពួកគេក៏ពុំបានសម្លាប់គាត់យ៉ាងពិតប្រាកដនោះដែរ ។

بَل رَّفَعَهُ ٱللَّهُ إِلَيْهِ ۚ وَكَانَ ٱللَّهُ عَزِيزًا حَكِيمًا ﴿١٥٨﴾

១៥៨-ផ្ទុយទៅវិញ អល់ឡោះបានលើកគាត់(អ៊ីសា)ទៅកាន់ទ្រង់ ។ ហើយអល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

وَإِن مِّنْ أَهْلِ ٱلْكِتَٰبِ إِلَّا لَيُؤْمِنَنَّ بِهِۦ قَبْلَ مَوْتِهِۦ ۖ وَيَوْمَ ٱلْقِيَٰمَةِ يَكُونُ عَلَيْهِمْ شَهِيدًا ﴿١٥٩﴾

១៥៩-គ្មានអ្នកណាម្នាក់ក្នុងចំណោមពួកអះលីគីតាប(មានជំនឿ)ឡើយ លុះត្រាតែគេមានជំនឿលើអ៊ីសាមុននឹងការស្លាប់របស់គាត់(ពួកយ៉ាហ៊ូទី និងពួកណាសរ៉នីជឿលើអ៊ីសាមុននឹងគាត់ស្លាប់ថា គាត់ពិតជាអ្នកនាំសាររបស់អល់ឡោះដែលទ្រង់នឹងបញ្ជូនមកលើផែនដីនេះមុនថ្ងៃបរលោក) ហើយនៅថ្ងៃបរលោកគាត់នឹង

فَبِظُلْمٍ مِّنَ ٱلَّذِينَ هَادُوا۟ حَرَّمْنَا عَلَيْهِمْ طَيِّبَٰتٍ أُحِلَّتْ لَهُمْ وَبِصَدِّهِمْ عَن سَبِيلِ ٱللَّهِ كَثِيرًا ﴿١٦٠﴾

وَأَخْذِهِمُ ٱلرِّبَوٰا۟ وَقَدْ نُهُوا۟ عَنْهُ وَأَكْلِهِمْ أَمْوَٰلَ ٱلنَّاسِ بِٱلْبَٰطِلِ ۚ وَأَعْتَدْنَا لِلْكَٰفِرِينَ مِنْهُمْ عَذَابًا أَلِيمًا ﴿١٦١﴾

لَّٰكِنِ ٱلرَّٰسِخُونَ فِى ٱلْعِلْمِ مِنْهُمْ وَٱلْمُؤْمِنُونَ يُؤْمِنُونَ بِمَآ أُنزِلَ إِلَيْكَ وَمَآ أُنزِلَ مِن قَبْلِكَ ۚ وَٱلْمُقِيمِينَ ٱلصَّلَوٰةَ ۚ وَٱلْمُؤْتُونَ ٱلزَّكَوٰةَ وَٱلْمُؤْمِنُونَ بِٱللَّهِ وَٱلْيَوْمِ ٱلْءَاخِرِ أُو۟لَٰٓئِكَ سَنُؤْتِيهِمْ أَجْرًا عَظِيمًا ﴿١٦٢﴾

۞ إِنَّآ أَوْحَيْنَآ إِلَيْكَ كَمَآ أَوْحَيْنَآ إِلَىٰ نُوحٍ وَٱلنَّبِيِّۦنَ مِنۢ بَعْدِهِۦ ۚ وَأَوْحَيْنَآ إِلَىٰٓ إِبْرَٰهِيمَ وَإِسْمَٰعِيلَ وَإِسْحَٰقَ وَيَعْقُوبَ وَٱلْأَسْبَاطِ وَعِيسَىٰ وَأَيُّوبَ وَيُونُسَ وَهَٰرُونَ وَسُلَيْمَٰنَ ۚ وَءَاتَيْنَا دَاوُۥدَ زَبُورًا ﴿١٦٣﴾

وَرُسُلًا قَدْ قَصَصْنَٰهُمْ عَلَيْكَ مِن قَبْلُ وَرُسُلًا لَّمْ نَقْصُصْهُمْ عَلَيْكَ ۚ وَكَلَّمَ ٱللَّهُ مُوسَىٰ تَكْلِيمًا ﴿١٦٤﴾

ធ្វើសាក្សីលើពួកគេ។

១៦០-ដោយសារតែការបំពានពីពួកយ៉ាហ៊ូទីនោះ យើងបានដាក់បម្រាមលើពួកគេនូវចំណីអាហារដ៏ល្អៗដែលទ្រង់ធ្លាប់អនុញ្ញាតឱ្យពួកគេ និងដោយសារតែការរារាំងរបស់ពួកគេដ៏ច្រើនពីមាគ៌ារបស់អល់ឡោះ។

១៦១-និងដោយសារតែពួកគេទទួលយកការប្រាក់ដែលអល់ឡោះបានហាមឃាត់ពួកគេអំពីវា និងស៊ីទ្រព្យសម្បត្តិអ្នកដទៃដោយខុសច្បាប់។ ហើយយើងបានរៀបចំសម្រាប់ពួកដែលប្រឆាំងក្នុងចំណោមពួកគេនូវទារុណកម្មដ៏សែនឈឺចាប់។

១៦២-ប៉ុន្តែអ្នកដែលមានចំណេះដឹងខ្ពង់ខ្ពស់ក្នុងចំណោមពួកគេ និងបណ្តាអ្នកដែលមានជំនឿ គឺអ្នកទាំងនោះជឿលើអ្វីដែលអល់ឡោះបានបញ្ចុះ(គម្ពីរគួរអាន)មកឱ្យអ្នក(មូហាំម៉ាត់) និងអ្វីដែលអល់ឡោះបានបញ្ចុះមកពីមុនអ្នក។ ហើយបណ្តាអ្នកដែលប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ ហើយនិងបណ្តាអ្នកដែលមានជំនឿលើអល់ឡោះនិងថ្ងៃបរលោក អ្នកទាំងនោះយើងនឹងផ្តល់ឱ្យពួកគេនូវផលបុណ្យដ៏ធំធេង។

១៦៣-ពិតប្រាកដណាស់ យើងបានផ្តល់វ៉ាហ៊ីឱ្យអ្នក(មូហាំម៉ាត់)ដូចដែលយើងបានផ្តល់វ៉ាហ៊ីទៅឱ្យនួហ និងបណ្តាណាពីបន្ទាប់ពីគាត់ ហើយយើងបានផ្តល់វ៉ាហ៊ីទៅឱ្យអ៊ីព្រហ៊ីម អ៊ីស្មាអ៊ីល អ៊ីសហាក យ៉ាក់កូប និងបណ្តាកូនចៅរបស់គាត់ និងអ៊ីសា អៃយ៉ូប យូនូស ហារូន ហើយនិងស៊ូឡៃម៉ាន។ ហើយយើងក៏បានផ្តល់គម្ពីរហ្សាពួរឱ្យដាវូដផងដែរ។

១៦៤-ហើយ(យើងបានតែងតាំង)បណ្តាអ្នកនាំសារមួយចំនួនដែលយើងបានពណ៌នាជីវប្រវត្តិរបស់ពួកគេប្រាប់អ្នក(មូហាំម៉ាត់)ពីមុននេះ និងបណ្តាអ្នកនាំសារមួយចំនួនទៀតដែលយើងមិនបានពណ៌នាជីវប្រវត្តិរបស់ពួកគេប្រាប់អ្នក។ ហើយអល់ឡោះបានមានបន្ទូលជាមួយមូសាដោយផ្ទាល់។

رُّسُلٗا مُّبَشِّرِينَ وَمُنذِرِينَ لِئَلَّا يَكُونَ لِلنَّاسِ
عَلَى ٱللَّهِ حُجَّةُۢ بَعۡدَ ٱلرُّسُلِۚ وَكَانَ ٱللَّهُ عَزِيزًا
حَكِيمٗا ١٦٥

១៦៥-គឺបណ្តាអ្នកនាំសារដែលជាអ្នកផ្សព្វផ្សាយដំណឹងរីករាយ និងជាអ្នកដាស់តឿនព្រមាន ដើម្បីកុំឱ្យមនុស្សលោកមានហេតុផលតវ៉ាណាមួយចំពោះអល់ឡោះបន្ទាប់ពី(ការតែងតាំង)អ្នកនាំសារទាំងនោះ។ អល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

لَّٰكِنِ ٱللَّهُ يَشۡهَدُ بِمَآ أَنزَلَ إِلَيۡكَۖ أَنزَلَهُۥ
بِعِلۡمِهِۦۖ وَٱلۡمَلَٰٓئِكَةُ يَشۡهَدُونَۚ وَكَفَىٰ بِٱللَّهِ
شَهِيدًا ١٦٦

១៦៦-ប៉ុន្តែអល់ឡោះនឹងធ្វើសាក្សីនូវអ្វី(គម្ពីរគួរអាន)ដែលទ្រង់បានបញ្ចុះមកឱ្យអ្នក(មូហាំម៉ាត់)គឺទ្រង់បានបញ្ចុះវា ដោយចំណេះដឹងរបស់ទ្រង់ ហើយបណ្តាម៉ាឡាអ៊ីកាត់ក៏ធ្វើជាសាក្សីដែរ។ គ្រប់គ្រាន់ហើយដែលអល់ឡោះជាអ្នកធ្វើសាក្សី ។

إِنَّ ٱلَّذِينَ كَفَرُواْ وَصَدُّواْ عَن سَبِيلِ ٱللَّهِ قَدۡ
ضَلُّواْ ضَلَٰلَۢا بَعِيدًا ١٦٧

១៦៧-ពិតប្រាកដណាស់ ពួកដែលប្រឆាំង ហើយបានរារាំងអ្នកដទៃអំពីមាគ៌ារបស់អល់ឡោះ ពួកគេពិតជាបានវង្វេង(ពីមាគ៌ាត្រឹមត្រូវ)ដ៏សែនឆ្ងាយ ។

إِنَّ ٱلَّذِينَ كَفَرُواْ وَظَلَمُواْ لَمۡ يَكُنِ ٱللَّهُ لِيَغۡفِرَ
لَهُمۡ وَلَا لِيَهۡدِيَهُمۡ طَرِيقًا ١٦٨

១៦៨-ពិតប្រាកដណាស់ ពួកដែលបានប្រឆាំងនិងបំពានគឺអល់ឡោះមិនអភ័យទោសដល់ពួកគេនិងមិនចង្អុលបង្ហាញផ្លូវណាមួយដល់ពួកគេឡើយ ។

إِلَّا طَرِيقَ جَهَنَّمَ خَٰلِدِينَ فِيهَآ أَبَدٗاۚ وَكَانَ
ذَٰلِكَ عَلَى ٱللَّهِ يَسِيرٗا ١٦٩

១៦៩-លើកលែងតែផ្លូវទៅកាន់នរកជើហាន់ណាំ ដែលពួកគេស្ថិតនៅក្នុងនោះជាអមតៈប៉ុណ្ណោះ។ កិច្ចការទាំងនេះមានភាពងាយស្រួលបំផុតចំពោះអល់ឡោះ។

يَٰٓأَيُّهَا ٱلنَّاسُ قَدۡ جَآءَكُمُ ٱلرَّسُولُ بِٱلۡحَقِّ مِن
رَّبِّكُمۡ فَـَٔامِنُواْ خَيۡرٗا لَّكُمۡۚ وَإِن تَكۡفُرُواْ فَإِنَّ
لِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ وَكَانَ ٱللَّهُ
عَلِيمًا حَكِيمٗا ١٧٠

១៧០-ឱមនុស្សលោក! ជាការពិតណាស់ អ្នកនាំសារបាននាំការពិតពីម្ចាស់របស់ពួកអ្នកមកកាន់ពួកអ្នក។ ដូច្នេះ ចូរពួកអ្នកមានជំនឿចុះ វាជាការល្អប្រពៃសម្រាប់ពួកអ្នក។ តែប្រសិនបើពួកអ្នកប្រឆាំងវិញនោះ ពិតប្រាកដណាស់អ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ។ អល់ឡោះមហាដឹង មហាគតិបណ្ឌិត។

يَٰٓأَهۡلَ ٱلۡكِتَٰبِ لَا تَغۡلُواْ فِي دِينِكُمۡ وَلَا
تَقُولُواْ عَلَى ٱللَّهِ إِلَّا ٱلۡحَقَّۚ إِنَّمَا ٱلۡمَسِيحُ
عِيسَى ٱبۡنُ مَرۡيَمَ رَسُولُ ٱللَّهِ وَكَلِمَتُهُۥٓ

១៧១-ឱអះលីគីតាប! ចូរពួកអ្នកកុំពន្លើសក្នុងសាសនារបស់ពួកអ្នក ហើយចូរពួកអ្នកកុំនិយាយពីអល់ឡោះក្រៅពីការពិតឱ្យសោះ។ តាមពិតម៉ាសៀហអ៊ីសាកូនម៉ារយ៉ាំនោះគឺជាអ្នកនាំសាររបស់អល់ឡោះ ហើយ(ទ្រង់បានបង្កើតពី)ពាក្យសំដីរបស់ទ្រង់

ដែលទ្រង់បានបញ្ជូនវាទៅកាន់ម៉ារយ៉ាំ និងវិញ្ញាណពីទ្រង់(តាមរយៈជីបព្រីល) ។ ដូច្នេះ ចូរពួកអ្នកមានជំនឿលើអល់ឡោះ និងបណ្តាអ្នកនាំសាររបស់ទ្រង់ចុះ ហើយកុំនិយាយថា "បី"[១] ។ ចូរពួកអ្នកឈប់(និយាយពាក្យនេះ) វាជាការប្រសើរសម្រាប់ពួកអ្នក ។ ពិតប្រាកដណាស់ អល់ឡោះជាម្ចាស់តែមួយគត់ ទ្រង់មានភាពស្អាតស្អំអំពីការមានបុត្រ ។ អ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលមាននៅលើផែនដីគឺជាកម្មសិទ្ធិរបស់ទ្រង់ ។ គ្រប់គ្រាន់ហើយដែលអល់ឡោះជាអ្នកគ្រប់គ្រង ។

១៧២-ម៉ាសៀហ(អ៊ីសា) នឹងមិនបដិសេធថា គេជាខ្ញុំរបស់អល់ឡោះឡើយ ហើយម៉ាឡាអ៊ីកាត់ដែលជាអ្នកនៅជិតអល់ឡោះក៏មិនបដិសេធដែរ ។ អ្នកណាហើយដែលបដិសេធនឹងការគោរពសក្ការៈចំពោះទ្រង់និងមានអំនួតនោះ អល់ឡោះនឹងប្រមូលផ្តុំពួកគេទាំងអស់ទៅកាន់ទ្រង់ ។

១៧៣-រីឯបណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អ អល់ឡោះនឹងបំពេញឱ្យពួកគេនូវផលបុណ្យ និងបន្ថែមដល់ពួកគេនូវលាភសក្ការៈរបស់ទ្រង់ថែមទៀត ។ ចំណែកពួកអ្នកដែលបានបដិសេធ និងមានអំនួត គឺអល់ឡោះនឹងធ្វើទារុណកម្មពួកគេយ៉ាងឈឺចាប់ ហើយសម្រាប់ពួកគេគ្មានអ្នកគាំពារ ឬអ្នកជួយណាក្រៅពីអល់ឡោះឡើយ ។

១៧៤-ឱមនុស្សលោក! ភស្តុតាង(មូហាំម៉ាត់) ពីម្ចាស់របស់ពួកអ្នកពិតជាបានមកដល់ពួកអ្នក ហើយយើងបានបញ្ចុះទៅឱ្យពួកអ្នកនូវពន្លឺយ៉ាងច្បាស់(គម្ពីរគួរអាន) ។

១៧៥-រីឯបណ្តាអ្នកដែលមានជំនឿលើអល់ឡោះ ហើយពួកគេប្រកាន់ខ្ជាប់នឹងវា(គម្ពីរគួរអាន) នោះ ទ្រង់នឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌ដោយក្តីមេត្តាករុណានិងការប្រោសប្រទានពីទ្រង់ ព្រមទាំងចង្អុលបង្ហាញពួកគេនូវមាគ៌ាដ៏ត្រឹមត្រូវទៅកាន់ទ្រង់ ។

أَلْقَىٰهَآ إِلَىٰ مَرْيَمَ وَرُوحٌ مِّنْهُ ۖ فَـَٔامِنُوا۟ بِٱللَّهِ وَرُسُلِهِۦ ۖ وَلَا تَقُولُوا۟ ثَلَـٰثَةٌ ۚ ٱنتَهُوا۟ خَيْرًا لَّكُمْ ۚ إِنَّمَا ٱللَّهُ إِلَـٰهٌ وَٰحِدٌ ۖ سُبْحَـٰنَهُۥٓ أَن يَكُونَ لَهُۥ وَلَدٌ ۘ لَّهُۥ مَا فِى ٱلسَّمَـٰوَٰتِ وَمَا فِى ٱلْأَرْضِ ۗ وَكَفَىٰ بِٱللَّهِ وَكِيلًا ﴿١٧١﴾

لَّن يَسْتَنكِفَ ٱلْمَسِيحُ أَن يَكُونَ عَبْدًا لِّلَّهِ وَلَا ٱلْمَلَـٰٓئِكَةُ ٱلْمُقَرَّبُونَ ۚ وَمَن يَسْتَنكِفْ عَنْ عِبَادَتِهِۦ وَيَسْتَكْبِرْ فَسَيَحْشُرُهُمْ إِلَيْهِ جَمِيعًا ﴿١٧٢﴾

فَأَمَّا ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّـٰلِحَـٰتِ فَيُوَفِّيهِمْ أُجُورَهُمْ وَيَزِيدُهُم مِّن فَضْلِهِۦ ۖ وَأَمَّا ٱلَّذِينَ ٱسْتَنكَفُوا۟ وَٱسْتَكْبَرُوا۟ فَيُعَذِّبُهُمْ عَذَابًا أَلِيمًا وَلَا يَجِدُونَ لَهُم مِّن دُونِ ٱللَّهِ وَلِيًّا وَلَا نَصِيرًا ﴿١٧٣﴾

يَـٰٓأَيُّهَا ٱلنَّاسُ قَدْ جَآءَكُم بُرْهَـٰنٌ مِّن رَّبِّكُمْ وَأَنزَلْنَآ إِلَيْكُمْ نُورًا مُّبِينًا ﴿١٧٤﴾

فَأَمَّا ٱلَّذِينَ ءَامَنُوا۟ بِٱللَّهِ وَٱعْتَصَمُوا۟ بِهِۦ فَسَيُدْخِلُهُمْ فِى رَحْمَةٍ مِّنْهُ وَفَضْلٍ وَيَهْدِيهِمْ إِلَيْهِ صِرَٰطًا مُّسْتَقِيمًا ﴿١٧٥﴾

---

១-ការគោរពសក្ការៈបីបញ្ចូលគ្នា គឺអល់ឡោះ អ៊ីសា និងម៉ារយ៉ាំ ។

يَسۡتَفۡتُونَكَ قُلِ ٱللَّهُ يُفۡتِيكُمۡ فِي ٱلۡكَلَٰلَةِۚ إِنِ ٱمۡرُؤٌاْ هَلَكَ لَيۡسَ لَهُۥ وَلَدٞ وَلَهُۥٓ أُخۡتٞ فَلَهَا نِصۡفُ مَا تَرَكَۚ وَهُوَ يَرِثُهَآ إِن لَّمۡ يَكُن لَّهَا وَلَدٞۚ فَإِن كَانَتَا ٱثۡنَتَيۡنِ فَلَهُمَا ٱلثُّلُثَانِ مِمَّا تَرَكَۚ وَإِن كَانُوٓاْ إِخۡوَةٗ رِّجَالٗا وَنِسَآءٗ فَلِلذَّكَرِ مِثۡلُ حَظِّ ٱلۡأُنثَيَيۡنِۗ يُبَيِّنُ ٱللَّهُ لَكُمۡ أَن تَضِلُّواْۗ وَٱللَّهُ بِكُلِّ شَيۡءٍ عَلِيمُۢ ﴿١٧٦﴾

១៧៦-ពួកគេនឹងសួរអ្នក(អំពីកាឡាឡះ[១]) ។ ចូរអ្នកពោលថាៈ អល់ឡោះគឺជាអ្នកកាត់សេចក្តីក្នុងរឿងកាឡាឡះនេះ ។ ប្រសិនបើបុរសដែលបានស្លាប់ដោយគ្មានបន្សល់ទុកកូន តែមានបង ឬប្អូនស្រី គឺសម្រាប់នាងត្រូវទទួលពាក់កណ្តាលនៃកេរមរតក ។ ហើយបុរសនោះនឹងត្រូវទទួលមរតកទាំងអស់ពីនាងវិញ ប្រសិនបើនាងគ្មានកូន ។ តែបើបុរសដែលស្លាប់នោះមានបងឬប្អូនស្រីពីរនាក់វិញគឺសម្រាប់នាងទាំងពីរនាក់នឹងទទួលបានពីរភាគបីនៃកេរមរតកនោះ ។ ហើយប្រសិនបើបុរសដែលស្លាប់នោះមានបងប្អូនប្រុស និងបងប្អូនស្រីច្រើននាក់ គឺសម្រាប់បុរសម្នាក់ទទួលបានពីរចំណែកនៃស្ត្រីម្នាក់ ។ អល់ឡោះបញ្ជាក់យ៉ាងច្បាស់សម្រាប់ពួកអ្នកដើម្បីកុំឱ្យពួកអ្នកវង្វេង ។ ហើយអល់ឡោះដឹងនូវអ្វីៗទាំងអស់ ។

## ជំពូកអាល់ម៉ាអ៊ីដះ

سورة المائدة

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ أَوۡفُواْ بِٱلۡعُقُودِۚ أُحِلَّتۡ لَكُم بَهِيمَةُ ٱلۡأَنۡعَٰمِ إِلَّا مَا يُتۡلَىٰ عَلَيۡكُمۡ غَيۡرَ مُحِلِّي ٱلصَّيۡدِ وَأَنتُمۡ حُرُمٌۗ إِنَّ ٱللَّهَ يَحۡكُمُ مَا يُرِيدُ ﴿١﴾

១-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកអនុវត្តតាមពាក្យសន្យាចុះ ។ គេបានអនុញ្ញាតឱ្យពួកអ្នកបរិភោគគ្រប់សត្វពាហនៈ លើកលែងតែអ្វីដែលគេនឹងសូត្រប្រាប់ពួកអ្នក(អំពីការហាមឃាត់) ដោយមិនអនុញ្ញាតឱ្យពួកអ្នកប្រមាញ់សត្វ ខណៈដែលពួកអ្នកពាក់អៀសរ៉ម(ពេលធ្វើហាជ្ជី ឬអ៊ុំរ៉ោះ) ។ ពិតប្រាកដណាស់ អល់ឡោះកាត់សេចក្តីលើអ្វីដែលទ្រង់មានចេតនា ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تُحِلُّواْ شَعَٰٓئِرَ ٱللَّهِ وَلَا ٱلشَّهۡرَ ٱلۡحَرَامَ وَلَا ٱلۡهَدۡيَ وَلَا ٱلۡقَلَٰٓئِدَ وَلَآ

២-ឱបណ្តាអ្នកមានជំនឿ! ចូរពួកអ្នកកុំល្មើសនឹងសញ្ញាណ[២] របស់អល់ឡោះ និងកុំល្មើសនៅក្នុងខែហារ៉ម[៣] និងអាល់ហាទយ៉ា[៤] ហើយនិងអាល់កឡាអ៊ិត[៥] និងអ្នកដែលមកពៃតាល់ហារ៉ម ដើម្បី

---

១-មរតករបស់សពដែលគ្មានឪពុក ហើយគ្មានកូនប្រុស ។

២-ការប្រតិបត្តិហាជ្ជី ដូចជា : សហ្វា ម៉ារវ៉ះ ។ល។

៣-ខែដែលគេហាមឃាត់មានចំនួនបួនខែ គឺហ៊្សុលកក់ដះ ហ៊្សុលហិជ្ជះ មូហារ៉ម និងរ៉ជប់ ។

៤-សត្វពាហនៈដែលគេសំឡេះគូរហ្ពានជូនកាក់ហ្គះមានដូចជា: សត្វអូដ្ឋ គោ ពពែ ចៀម ។ល ។

៥-អាល់កឡាអ៊ិត : សត្វដែលពាក់ប្រឡោក ដើម្បីជាសញ្ញាណសំគាល់ថាៈ សត្វនោះសម្រាប់សំឡេះធ្វើគូរហ្ពានជូនកាក់ហ្គះ និងដើម្បីឱ្យគេដឹងថា រូបគេចង់ធ្វើហាជ្ជី ។

ءَآمِّينَ ٱلۡبَيۡتَ ٱلۡحَرَامَ يَبۡتَغُونَ فَضۡلٗا مِّن رَّبِّهِمۡ وَرِضۡوَٰنٗاۚ وَإِذَا حَلَلۡتُمۡ فَٱصۡطَادُواْۚ وَلَا يَجۡرِمَنَّكُمۡ شَنَـَٔانُ قَوۡمٍ أَن صَدُّوكُمۡ عَنِ ٱلۡمَسۡجِدِ ٱلۡحَرَامِ أَن تَعۡتَدُواْۘ وَتَعَاوَنُواْ عَلَى ٱلۡبِرِّ وَٱلتَّقۡوَىٰۖ وَلَا تَعَاوَنُواْ عَلَى ٱلۡإِثۡمِ وَٱلۡعُدۡوَٰنِۚ وَٱتَّقُواْ ٱللَّهَۖ إِنَّ ٱللَّهَ شَدِيدُ ٱلۡعِقَابِ ٢

ស្វែងរកលាភសក្ការៈ និងការអនុគ្រោះពីម្ចាស់របស់ពួកគេ។ ប៉ុន្តែ នៅពេលណាពួកអ្នកបានបញ្ចប់អៀសរ៉ម(ហាជ្ជី ឬអ៊ុំរ៉ោះ) គឺពួកអ្នកអាចបរបាញ់សត្វបាន។ ហើយចូរកុំបណ្តោយឱ្យការស្អប់ខ្ពើមរបស់ក្រុមមួយដែលបានរារាំងពួកអ្នកពីម៉ាស្ជិទិលហារ៉ាមធ្វើឱ្យពួកអ្នកបំពានឱ្យសោះ។ ចូរពួកអ្នកជួយគ្នាក្នុងការធ្វើអំពើល្អ និងកោតខ្លាចអល់ឡោះ។ ហើយចូរពួកអ្នកកុំជួយគ្នាក្នុងការធ្វើអំពើបាប និងធ្វើជាសត្រូវនឹងគ្នាឱ្យសោះ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ។ ជាការពិតណាស់ អល់ឡោះជាអ្នកធ្វើទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។

حُرِّمَتۡ عَلَيۡكُمُ ٱلۡمَيۡتَةُ وَٱلدَّمُ وَلَحۡمُ ٱلۡخِنزِيرِ وَمَآ أُهِلَّ لِغَيۡرِ ٱللَّهِ بِهِۦ وَٱلۡمُنۡخَنِقَةُ وَٱلۡمَوۡقُوذَةُ وَٱلۡمُتَرَدِّيَةُ وَٱلنَّطِيحَةُ وَمَآ أَكَلَ ٱلسَّبُعُ إِلَّا مَا ذَكَّيۡتُمۡ وَمَا ذُبِحَ عَلَى ٱلنُّصُبِ وَأَن تَسۡتَقۡسِمُواْ بِٱلۡأَزۡلَٰمِۚ ذَٰلِكُمۡ فِسۡقٌۗ ٱلۡيَوۡمَ يَئِسَ ٱلَّذِينَ كَفَرُواْ مِن دِينِكُمۡ فَلَا تَخۡشَوۡهُمۡ وَٱخۡشَوۡنِۚ ٱلۡيَوۡمَ أَكۡمَلۡتُ لَكُمۡ دِينَكُمۡ وَأَتۡمَمۡتُ عَلَيۡكُمۡ نِعۡمَتِي وَرَضِيتُ لَكُمُ ٱلۡإِسۡلَٰمَ دِينٗاۚ فَمَنِ ٱضۡطُرَّ فِي مَخۡمَصَةٍ غَيۡرَ مُتَجَانِفٖ لِّإِثۡمٖ فَإِنَّ ٱللَّهَ غَفُورٞ رَّحِيمٞ ٣

៣-គេ(អល់ឡោះ)បានហាមឃាត់ចំពោះពួកអ្នក(បរិភោគ) សត្វស្លាប់ ឈាម សាច់ជ្រូក និងអ្វីដែលគេសំឡេះដើម្បីបូជាម្ចាស់ផ្សេងពីអល់ឡោះ និងសត្វដែលត្រូវគេសម្លាប់ដោយរឹតក និងដោយគេវាយ និងដោយធ្លាក់ពីទីខ្ពស់ និងដោយគេជល់ និងអ្វីដែលសត្វសាហាវបានខាំ លើកលែងតែពួកអ្នកបានសំឡេះវាមុននឹងស្លាប់។ ហើយ(ត្រូវគេហាមឃាត់ផងដែរ)អ្វីដែលគេសំឡេះថ្វាយរូបសំណាក និងការទស្សន៍ទាយ ដោយដកឈើព្រួញផ្សងសំណាង។ ទាំងនោះគឺជាការប្រឆាំង(នឹងអល់ឡោះ)។ ថ្ងៃនេះពួកដែលគ្មានជំនឿបានអស់សង្ឃឹមចំពោះសាសនា(អ៊ីស្លាម)របស់ពួកអ្នក។ ដូច្នេះ ចូរពួកអ្នកកុំខ្លាចពួកគេអ្វី តែចូរពួកអ្នកខ្លាចយើង(អល់ឡោះ)វិញ។ ថ្ងៃនេះ យើងបានបំពេញសាសនារបស់ពួកអ្នកឱ្យពួកអ្នក និងបានបង្គ្រប់នៀកម៉ាត់របស់យើងឱ្យពួកអ្នក ហើយយើងបានជ្រើសរើសសាសនាអ៊ីស្លាមជាសាសនារបស់ពួកអ្នក។ ចំពោះអ្នកដែលមានការចាំបាច់ដោយសារការស្រេកឃ្លាន គ្មានចេតនាប្រព្រឹត្តបាបកម្មនោះ ពិតប្រាកដណាស់អល់ឡោះ មហាអភ័យទោស មហាអាណិតស្រឡាញ់។

يَسۡـَٔلُونَكَ مَاذَآ أُحِلَّ لَهُمۡۖ قُلۡ أُحِلَّ لَكُمُ ٱلطَّيِّبَٰتُ وَمَا عَلَّمۡتُم مِّنَ ٱلۡجَوَارِحِ مُكَلِّبِينَ تُعَلِّمُونَهُنَّ مِمَّا عَلَّمَكُمُ ٱللَّهُۖ فَكُلُواْ مِمَّآ أَمۡسَكۡنَ

៤-ពួកគេនឹងសួរអ្នក(មូហាំម៉ាត់) តើអ្វីទៅដែលគេបានអនុញ្ញាតឱ្យពួកគេ(បរិភោគ)? ចូរអ្នកនិយាយប្រាប់ថាៈ គេបានអនុញ្ញាតឱ្យពួកអ្នកនូវអ្វីដែលល្អ(អាហារដែលហាឡាល់) និងសត្វទាំងឡាយណាដែលអ្នកទទួលបានពីសត្វដែលអ្នកបង្ហាត់វាឱ្យចេះ

عَلَيۡكُمۡ وَٱذۡكُرُواْ ٱسۡمَ ٱللَّهِ عَلَيۡهِۖ وَٱتَّقُواْ ٱللَّهَۚ إِنَّ ٱللَّهَ سَرِيعُ ٱلۡحِسَابِ ﴿٤﴾

ប្រមាញ់ រួមមានពពួកឆ្កែដែលពួកអ្នកបានបង្ហាត់វា ដូចអ្វីដែលអល់ឡោះបានបង្រៀនពួកអ្នក ។ ចូរពួកអ្នកបរិភោគនូវសត្វដែលពួកវាចាប់មកឱ្យពួកអ្នកចុះ ហើយពួកអ្នកត្រូវរំលឹកឈ្មោះអល់ឡោះ (សូត្រពិសមិលឡះ) ពេលដែលបញ្ជូនសត្វនោះទៅប្រមាញ់ ។ ចូរពួកអ្នកខ្លាចអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកជំនុំជំរះយ៉ាងរហ័សបំផុត ។

ٱلۡيَوۡمَ أُحِلَّ لَكُمُ ٱلطَّيِّبَٰتُۖ وَطَعَامُ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ حِلّٞ لَّكُمۡ وَطَعَامُكُمۡ حِلّٞ لَّهُمۡۖ وَٱلۡمُحۡصَنَٰتُ مِنَ ٱلۡمُؤۡمِنَٰتِ وَٱلۡمُحۡصَنَٰتُ مِنَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ مِن قَبۡلِكُمۡ إِذَآ ءَاتَيۡتُمُوهُنَّ أُجُورَهُنَّ مُحۡصِنِينَ غَيۡرَ مُسَٰفِحِينَ وَلَا مُتَّخِذِيٓ أَخۡدَانٖۗ وَمَن يَكۡفُرۡ بِٱلۡإِيمَٰنِ فَقَدۡ حَبِطَ عَمَلُهُۥ وَهُوَ فِي ٱلۡأٓخِرَةِ مِنَ ٱلۡخَٰسِرِينَ ﴿٥﴾

៥-ថ្ងៃនេះគេបានអនុញ្ញាតឱ្យពួកអ្នកនូវអ្វីដែលល្អ(ហាឡាល់) និងចំណីអាហាររបស់ពួកដែលគេផ្ដល់គម្ពីរឱ្យ(ការសំឡេះរបស់ពួកយ៉ាហ៊ូទី និងណាសរ៉និ) ពួកអ្នកអាចបរិភោគបាន ហើយចំណីអាហាររបស់ពួកអ្នក ក៏ពួកគេអាចបរិភោគបានដែរ ។ ហើយ(គេអនុញ្ញាតឱ្យពួកអ្នករៀបអាពាហ៍ពិពាហ៍ផងដែរ) ជាមួយស្ត្រីបរិសុទ្ធក្នុងចំណោមស្ត្រីដែលមានជំនឿ និងស្ត្រីបរិសុទ្ធនៃពួកដែលគេផ្ដល់គម្ពីរឱ្យមុនពួកអ្នកប្រសិនបើពួកអ្នកបានឱ្យប្រាក់ខាន់ស្លាដល់ពួកនាងក្នុងគោលបំណងរៀបអាពាហ៍ពិពាហ៍ពុំមែនក្នុងបំណងហ្ស៊ីណា[១] ហើយក៏ពុំមែនក្នុងគោលបំណងយកធ្វើជាសាហាយស្មន់ដែរនោះ ។ ហើយអ្នកណាដែលប្រឆាំងនឹងគោលជំនឿអ៊ីស្លាម ពិតប្រាកដណាស់ទង្វើល្អរបស់គេត្រូវលុបបំបាត់ចោល ហើយនៅថ្ងៃបរលោកអ្នកនោះស្ថិតនៅក្នុងចំណោមអ្នកដែលខាតបង់ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا قُمۡتُمۡ إِلَى ٱلصَّلَوٰةِ فَٱغۡسِلُواْ وُجُوهَكُمۡ وَأَيۡدِيَكُمۡ إِلَى ٱلۡمَرَافِقِ وَٱمۡسَحُواْ بِرُءُوسِكُمۡ وَأَرۡجُلَكُمۡ إِلَى ٱلۡكَعۡبَيۡنِۚ وَإِن كُنتُمۡ جُنُبٗا فَٱطَّهَّرُواْۚ وَإِن كُنتُم مَّرۡضَىٰٓ أَوۡ عَلَىٰ سَفَرٍ أَوۡ جَآءَ أَحَدٞ مِّنكُم مِّنَ ٱلۡغَآئِطِ أَوۡ لَٰمَسۡتُمُ ٱلنِّسَآءَ فَلَمۡ تَجِدُواْ مَآءٗ فَتَيَمَّمُواْ صَعِيدٗا طَيِّبٗا فَٱمۡسَحُواْ

៦-ឱបណ្ដាអ្នកដែលមានជំនឿ! នៅពេលដែលពួកអ្នកមានបំណងសឡាត ចូរពួកអ្នកលាងមុខ និងដៃរហូតដល់កែងដៃ ព្រមទាំងជូតក្បាលរបស់ពួកអ្នក និងលាងជើងរបស់ពួកអ្នករហូតដល់ភ្នែកគោល ។ ហើយប្រសិនបើពួកអ្នកមានជូនុប ពួកអ្នកត្រូវសំអាតខ្លួនប្រាណ(ដោយងូតទឹក) ។ ប្រសិនបើពួកអ្នកមានជម្ងឺ ឬធ្វើដំណើរ ឬនរណាម្នាក់ក្នុងចំណោមពួកអ្នកបានបន្ទោរបង់ ឬបានរួមរ័កជាមួយប្រពន្ធ ហើយគ្មានទឹកដើម្បីសំអាតនោះ ចូរពួកអ្នកតាយ៉ាំមុំដោយប្រើដីស្អាត ហើយចូរពួកអ្នកជូតមុខ និងដៃទាំងពីររបស់ពួកអ្នកនឹងដីនោះ ។ អល់ឡោះមិនចង់ធ្វើឱ្យមានការលំបាកដល់ពួកអ្នកឡើយ

១-ហ្ស៊ីណា : ការរួមរ័កដោយពុំបានរៀបអាពាហ៍ពិពាហ៍តាមច្បាប់អ៊ីស្លាម ។

ប៉ុន្តែទ្រង់ចង់សំអាតពួកអ្នក និងដើម្បីបំពេញនៀកម៉ាត់របស់ទ្រង់ដល់ពួកអ្នកប៉ុណ្ណោះដើម្បីពួកអ្នកថ្លែងអំណរគុណ ។

بِوُجُوهِكُمْ وَأَيْدِيكُم مِّنْهُ ۚ مَا يُرِيدُ اللَّهُ لِيَجْعَلَ عَلَيْكُم مِّنْ حَرَجٍ وَلَٰكِن يُرِيدُ لِيُطَهِّرَكُمْ وَلِيُتِمَّ نِعْمَتَهُ عَلَيْكُمْ لَعَلَّكُمْ تَشْكُرُونَ ﴿٦﴾

៧-ហើយចូរពួកអ្នករំលឹកនូវនៀកម៉ាត់របស់អល់ឡោះ ដែលទ្រង់បានប្រទានឱ្យពួកអ្នក និងកិច្ចសន្យាដែលទ្រង់បានសន្យាវាចំពោះពួកអ្នក គឺនៅពេលដែលពួកអ្នកបាននិយាយថាៈ ពួកយើងបានឮ ហើយព្រមប្រតិបត្តិតាម ។ ចូរពួកអ្នកកោតខ្លាចអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹងនូវអ្វីៗដែលមាននៅក្នុងចិត្ត ។

وَاذْكُرُوا نِعْمَةَ اللَّهِ عَلَيْكُمْ وَمِيثَاقَهُ الَّذِي وَاثَقَكُم بِهِ إِذْ قُلْتُمْ سَمِعْنَا وَأَطَعْنَا ۖ وَاتَّقُوا اللَّهَ ۚ إِنَّ اللَّهَ عَلِيمٌ بِذَاتِ الصُّدُورِ ﴿٧﴾

៨-ឱបណ្តាអ្នកមានជំនឿ! ចូរពួកអ្នកតាំងខ្លួនជាអ្នកដែលប្រកាន់ខ្ជាប់នូវការពិតដើម្បីអល់ឡោះ ជាអ្នកដែលធ្វើសាក្សីដោយយុត្តិធម៌ ។ ចូរពួកអ្នកប្រកាន់ខ្ជាប់នូវភាពយុត្តិធម៌ធ្វើជាសាក្សីដើម្បីអល់ឡោះ ។ ហើយចូរកុំបណ្តោយឱ្យការស្អប់ខ្ពើមរបស់ក្រុមមួយធ្វើឱ្យពួកអ្នកប្រព្រឹត្តអំពើអយុត្តិធម៌ឱ្យសោះ ។ ចូរពួកអ្នកប្រកាន់ខ្ជាប់នូវភាពយុត្តិធម៌ ព្រោះវាជិតបំផុតក្នុងការកោតខ្លាចអល់ឡោះ ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះដឹងបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

يَا أَيُّهَا الَّذِينَ آمَنُوا كُونُوا قَوَّامِينَ لِلَّهِ شُهَدَاءَ بِالْقِسْطِ ۖ وَلَا يَجْرِمَنَّكُمْ شَنَآنُ قَوْمٍ عَلَىٰ أَلَّا تَعْدِلُوا ۚ اعْدِلُوا هُوَ أَقْرَبُ لِلتَّقْوَىٰ ۖ وَاتَّقُوا اللَّهَ ۚ إِنَّ اللَّهَ خَبِيرٌ بِمَا تَعْمَلُونَ ﴿٨﴾

៩-អល់ឡោះបានសន្យាចំពោះបណ្តាអ្នកដែលមានជំនឿ និងបណ្តាអ្នកដែលសាងអំពើល្អថាៈ ពួកគេនឹងទទួលបានការអភ័យទោស និងផលបុណ្យដ៏ធំធេង ។

وَعَدَ اللَّهُ الَّذِينَ آمَنُوا وَعَمِلُوا الصَّالِحَاتِ ۙ لَهُم مَّغْفِرَةٌ وَأَجْرٌ عَظِيمٌ ﴿٩﴾

១០-រីឯពួកដែលប្រឆាំង និងបានបដិសេធនឹងបណ្តាភស្តុតាងរបស់យើង ពួកទាំងនោះគឺជាពួកនរកជើហ៊ីម ។

وَالَّذِينَ كَفَرُوا وَكَذَّبُوا بِآيَاتِنَا أُولَٰئِكَ أَصْحَابُ الْجَحِيمِ ﴿١٠﴾

១១-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នករំលឹកនូវនៀកម៉ាត់របស់អល់ឡោះដែលទ្រង់បានប្រទានឱ្យពួកអ្នកនៅពេលដែលមនុស្សមួយក្រុមមានបំណងចង់សម្លាប់ពួកអ្នកដោយដៃរបស់ពួកគេ ហើយទ្រង់បានការពារពួកអ្នកឱ្យរួចផុតពីកណ្តាប់ដៃរបស់ពួកគេ ។

يَا أَيُّهَا الَّذِينَ آمَنُوا اذْكُرُوا نِعْمَتَ اللَّهِ عَلَيْكُمْ إِذْ هَمَّ قَوْمٌ أَن يَبْسُطُوا إِلَيْكُمْ أَيْدِيَهُمْ فَكَفَّ أَيْدِيَهُمْ عَنكُمْ ۖ وَاتَّقُوا اللَّهَ ۚ

وَعَلَى ٱللَّهِ فَلۡيَتَوَكَّلِ ٱلۡمُؤۡمِنُونَ ﴿١١﴾

ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ ហើយចូរឱ្យបណ្ដាអ្នកដែលមានជំនឿ ប្រគល់ការទុកចិត្តទៅចំពោះអល់ឡោះ។

۞ وَلَقَدۡ أَخَذَ ٱللَّهُ مِيثَٰقَ بَنِيٓ إِسۡرَٰٓءِيلَ
وَبَعَثۡنَا مِنۡهُمُ ٱثۡنَيۡ عَشَرَ نَقِيبٗاۖ وَقَالَ ٱللَّهُ
إِنِّي مَعَكُمۡۖ لَئِنۡ أَقَمۡتُمُ ٱلصَّلَوٰةَ وَءَاتَيۡتُم
ٱلزَّكَوٰةَ وَءَامَنتُم بِرُسُلِي وَعَزَّرۡتُمُوهُمۡ
وَأَقۡرَضۡتُمُ ٱللَّهَ قَرۡضًا حَسَنٗا لَّأُكَفِّرَنَّ
عَنكُمۡ سَيِّـَٔاتِكُمۡ وَلَأُدۡخِلَنَّكُمۡ جَنَّٰتٖ
تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُۚ فَمَن كَفَرَ
بَعۡدَ ذَٰلِكَ مِنكُمۡ فَقَدۡ ضَلَّ سَوَآءَ
ٱلسَّبِيلِ ﴿١٢﴾

១២-ហើយជាការពិតណាស់ អល់ឡោះបានដាក់កិច្ចសន្យាទៅលើអំបូរអ៊ីស្រាអែល។ ហើយយើងបានបញ្ជាមូសាឱ្យជ្រើសរើសដប់ពីរនាក់អំពីពួកគេជាមេដឹកនាំ ហើយអល់ឡោះបានមានបន្ទូលថា: ពិតប្រាកដណាស់ យើងនៅជាមួយពួកអ្នក(ក្នុងការការពារនិងផ្ដល់ជំនួយ) ប្រសិនបើពួកអ្នកបានបញ្ឈរសឡាត និងបានបរិច្ចាគហ្សាកាត់ និងមានជំនឿលើបណ្ដាអ្នកនាំសាររបស់យើង និងបានជួយជ្រោមជ្រែងពួកគេ ព្រមទាំងពួកអ្នកបានឱ្យអល់ឡោះខ្ចីនូវកម្ចីដ៏ល្អប្រពៃនោះ(បរិច្ចាគទ្រព្យសម្បត្តិក្នុងមាគ៌ារបស់អល់ឡោះ) យើងពិតជានឹងលុបបំបាត់ប្រការអាក្រក់ទាំងឡាយរបស់ពួកអ្នកចេញពីពួកអ្នក ហើយយើងប្រាកដជានឹងបញ្ចូលពួកអ្នកទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា។ ដូច្នេះ អ្នកណាហើយក្នុងចំណោមពួកអ្នកបានប្រឆាំងក្រោយពីនោះ គឺគេពិតជាបានវង្វេងពីផ្លូវដែលត្រឹមត្រូវជាមិនខាន។

فَبِمَا نَقۡضِهِم مِّيثَٰقَهُمۡ لَعَنَّٰهُمۡ وَجَعَلۡنَا
قُلُوبَهُمۡ قَٰسِيَةٗۖ يُحَرِّفُونَ ٱلۡكَلِمَ عَن
مَّوَاضِعِهِۦ وَنَسُواْ حَظّٗا مِّمَّا ذُكِّرُواْ بِهِۦۚ وَلَا
تَزَالُ تَطَّلِعُ عَلَىٰ خَآئِنَةٖ مِّنۡهُمۡ إِلَّا قَلِيلٗا مِّنۡهُمۡۖ
فَٱعۡفُ عَنۡهُمۡ وَٱصۡفَحۡۚ إِنَّ ٱللَّهَ يُحِبُّ
ٱلۡمُحۡسِنِينَ ﴿١٣﴾

១៣-ដោយសារតែការបោះបង់កិច្ចសន្យារបស់ពួកគេនោះហើយ ទើបយើងបានដាក់បណ្ដាសាពួកគេ ហើយយើងបានធ្វើឱ្យចិត្តពួកគេរឹង(មិនទទួលការពិត)។ ពួកគេកែប្រែពាក្យសំដី(របស់អល់ឡោះ)ឱ្យខុសពីកន្លែងដើម(អត្ថន័យ)របស់វា ហើយពួកគេបានភ្លេច(បោះបង់ចោល)មួយចំណែកពីអ្វីដែលគេបានរំលឹកពួកគេនឹងវា។ ហើយអ្នក(មូហាំម៉ាត់)នៅតែឃើញទង្វើក្បត់របស់ពួកគេលើកលែងតែមួយចំនួនតូចអំពីពួកគេប៉ុណ្ណោះ។ ហេតុនេះ ចូរអ្នកអភ័យទោស និងបំភ្លេចចោលពីទោសកំហុសរបស់ពួកគេ។ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្ដាអ្នកដែលធ្វើល្អ។

وَمِنَ ٱلَّذِينَ قَالُوٓاْ إِنَّا نَصَٰرَىٰٓ أَخَذۡنَا
مِيثَٰقَهُمۡ فَنَسُواْ حَظّٗا مِّمَّا ذُكِّرُواْ بِهِۦ
فَأَغۡرَيۡنَا بَيۡنَهُمُ ٱلۡعَدَاوَةَ وَٱلۡبَغۡضَآءَ إِلَىٰ يَوۡمِ

១៤-ហើយយើងបានយកកិច្ចសន្យាពីពួកដែលបាននិយាយថា: ពិតប្រាកដណាស់ ពួកយើងជាណាសរ៉ និងពួកគេបានភ្លេច(បោះបង់ចោល)មួយចំណែកពីអ្វីដែលគេបានរំលឹកពួកគេពីវា។ ហើយយើងបានធ្វើឱ្យពួកគេក្លាយជាសត្រូវនឹងគ្នា និងស្អប់ខ្ពើមគ្នារហូតដល់ថ្ងៃបរលោក។ ហើយអល់ឡោះនឹងប្រាប់ពួកគេឱ្យដឹងនូវអ្វីដែលពួកគេ

ٱلۡقِيَـٰمَةِۚ وَسَوۡفَ يُنَبِّئُهُمُ ٱللَّهُ بِمَا كَانُواْ
يَصۡنَعُونَ ١٤

يَـٰٓأَهۡلَ ٱلۡكِتَـٰبِ قَدۡ جَآءَكُمۡ رَسُولُنَا
يُبَيِّنُ لَكُمۡ كَثِيرٗا مِّمَّا كُنتُمۡ
تُخۡفُونَ مِنَ ٱلۡكِتَـٰبِ وَيَعۡفُواْ عَن
كَثِيرٖۚ قَدۡ جَآءَكُم مِّنَ ٱللَّهِ نُورٞ
وَكِتَـٰبٞ مُّبِينٞ ١٥

يَهۡدِي بِهِ ٱللَّهُ مَنِ ٱتَّبَعَ رِضۡوَٰنَهُۥ سُبُلَ
ٱلسَّلَـٰمِ وَيُخۡرِجُهُم مِّنَ ٱلظُّلُمَـٰتِ إِلَى ٱلنُّورِ
بِإِذۡنِهِۦ وَيَهۡدِيهِمۡ إِلَىٰ صِرَٰطٖ مُّسۡتَقِيمٖ ١٦

لَّقَدۡ كَفَرَ ٱلَّذِينَ قَالُوٓاْ إِنَّ ٱللَّهَ هُوَ
ٱلۡمَسِيحُ ٱبۡنُ مَرۡيَمَۚ قُلۡ فَمَن يَمۡلِكُ مِنَ ٱللَّهِ
شَيۡـًٔا إِنۡ أَرَادَ أَن يُهۡلِكَ ٱلۡمَسِيحَ ٱبۡنَ
مَرۡيَمَ وَأُمَّهُۥ وَمَن فِي ٱلۡأَرۡضِ جَمِيعٗاۗ وَلِلَّهِ
مُلۡكُ ٱلسَّمَـٰوَٰتِ وَٱلۡأَرۡضِ وَمَا بَيۡنَهُمَاۚ
يَخۡلُقُ مَا يَشَآءُۚ وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ١٧

وَقَالَتِ ٱلۡيَهُودُ وَٱلنَّصَـٰرَىٰ نَحۡنُ أَبۡنَـٰٓؤُاْ ٱللَّهِ
وَأَحِبَّـٰٓؤُهُۥۚ قُلۡ فَلِمَ يُعَذِّبُكُم بِذُنُوبِكُمۖ بَلۡ
أَنتُم بَشَرٞ مِّمَّنۡ خَلَقَۚ يَغۡفِرُ لِمَن يَشَآءُ
وَيُعَذِّبُ مَن يَشَآءُۚ وَلِلَّهِ مُلۡكُ ٱلسَّمَـٰوَٰتِ

បានប្រព្រឹត្តកន្លងមក។

១៥-ឱអះលីគីតាប! ជាការពិតណាស់ អ្នកនាំសារ( មូហាំម៉ាត់) របស់យើងបានមកដល់ពួកអ្នកដែលគេបានបញ្ជាក់ប្រាប់ពួកអ្នកជាច្រើនមកហើយអំពីអ្វីដែលពួកអ្នកធ្លាប់បានលាក់បាំងនៅក្នុងគម្ពីរ( តាវរ៉ត) ហើយគេក៏លើកលែង( មិនបញ្ជាក់ប្រាប់) ជាច្រើនដែរ។ ពន្លឺ( មូហាំម៉ាត់) និងគម្ពីរ( គួរអាន) ដ៏ជាក់ច្បាស់មកពីអល់ឡោះពិតជាបានមកដល់ពួកអ្នក។

១៦-អល់ឡោះនឹងចង្អុលបង្ហាញតាមរយៈគម្ពីរគួរអានចំពោះអ្នកដែលដើរតាមការយល់ព្រមរបស់ទ្រង់ឆ្ពោះទៅរកផ្លូវដែលមានសុវត្ថិភាព ហើយទ្រង់នឹងបញ្ចេញពួកគេពីភាពងងឹតទៅរកភាពភ្លឺស្វាងដោយការអនុញ្ញាតអំពីទ្រង់ ព្រមទាំងចង្អុលបង្ហាញពួកគេទៅរកផ្លូវដ៏ត្រឹមត្រូវ។

១៧-ជាការពិតណាស់ ពួកដែលបាននិយាយថាៈ ពិតប្រាកដណាស់ អល់ឡោះគឺម៉ាសៀហ( អ៊ីសា) កូនរបស់ម៉ារយ៉ាំនោះ គឺជាពួកដែលគ្មានជំនឿ។ ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ តើមាននរណាម្នាក់អាចហាមឃាត់អ្វីមួយចំពោះអល់ឡោះក្នុងការដែលទ្រង់មានចេតនាបំផ្លាញម៉ាសៀហកូនរបស់ម៉ារយ៉ាំ និងម្ដាយរបស់គេ ព្រមទាំងអ្នកដែលនៅលើផែនដីទាំងអស់នោះ? ការគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដីនិងអ្វីៗដែលមានរវាងវាទាំងពីរគឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ទ្រង់បង្កើតអ្វីដែលទ្រង់មានចេតនា។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់។

១៨-ពួកយ៉ាហ៊ូទី និងណាសរ៉នីបានអះអាងថាៈ ពួកយើងគឺជាកូនរបស់អល់ឡោះ និងជាបណ្ដូលចិត្តរបស់ទ្រង់។ ចូរអ្នក( មូហាំ-ម៉ាត់) តបវិញថាៈ ដូច្នេះហេតុអ្វីបានជាទ្រង់ធ្វើទារុណកម្មពួកអ្នកដោយសារតែអំពើបាបរបស់ពួកអ្នក? ផ្ទុយទៅវិញ ពួកអ្នកក៏ជាមនុស្សក្នុងចំណោមអ្នកដែលទ្រង់បានបង្កើតដែរ។ ទ្រង់អភ័យ-

وَٱلۡأَرۡضِ وَمَا بَيۡنَهُمَاۖ وَإِلَيۡهِ ٱلۡمَصِيرُ ١٨

ទោសចំពោះអ្នកណាដែលទ្រង់មានចេតនា ហើយទ្រង់ក៏ធ្វើទារុណកម្មចំពោះអ្នកណាដែលទ្រង់មានចេតនាដែរ ។ ការគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី និងអ្វីៗដែលមានរវាងវាទាំងពីរជាកម្មសិទ្ធិរបស់អល់ឡោះ ។ ហើយចំពោះទ្រង់តែមួយគត់ជាកន្លែងវិលត្រឡប់ ។

يَٰٓأَهۡلَ ٱلۡكِتَٰبِ قَدۡ جَآءَكُمۡ رَسُولُنَا يُبَيِّنُ لَكُمۡ
عَلَىٰ فَتۡرَةٖ مِّنَ ٱلرُّسُلِ أَن تَقُولُواْ مَا جَآءَنَا مِنۢ
بَشِيرٖ وَلَا نَذِيرٖۖ فَقَدۡ جَآءَكُم بَشِيرٞ وَنَذِيرٞۗ
وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ١٩

១៩-ឱអះលីគីតាប! ជាការពិតណាស់ អ្នកនាំសារ(មូហាំម៉ាត់)របស់យើងបានមកដល់ពួកអ្នក ដោយគេបញ្ជាក់ប្រាប់ពួកអ្នក(នូវការពិត)ខណៈដែលបណ្តាអ្នកនាំសារបានកាត់ផ្តាច់មួយរយៈ ដើម្បីកុំឱ្យពួកអ្នកនិយាយថាៈ អ្នកផ្តល់ដំណឹងរីករាយ និងអ្នកដាស់តឿនព្រមានមិនបានមកដល់ពួកយើងឡើយ ។ ជាការពិតណាស់ អ្នកផ្តល់ដំណឹងរីករាយ និងអ្នកដាស់តឿនព្រមានបានមកដល់ពួកអ្នក ។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

وَإِذۡ قَالَ مُوسَىٰ لِقَوۡمِهِۦ يَٰقَوۡمِ ٱذۡكُرُواْ نِعۡمَةَ
ٱللَّهِ عَلَيۡكُمۡ إِذۡ جَعَلَ فِيكُمۡ أَنۢبِيَآءَ وَجَعَلَكُم
مُّلُوكٗا وَءَاتَىٰكُم مَّا لَمۡ يُؤۡتِ أَحَدٗا مِّنَ
ٱلۡعَٰلَمِينَ ٢٠

២០-ហើយ(ចូរចងចាំ)នៅពេលដែលមូសាបានពោលទៅកាន់ក្រុមរបស់គាត់ថាៈ ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកចងចាំនូវនៀកម៉ាត់របស់អល់ឡោះដែលបានប្រទានឱ្យពួកអ្នកនៅពេលដែលទ្រង់បានចាត់តាំងណាពីជាច្រើននៅក្នុងចំណោមពួកអ្នក ហើយទ្រង់បានចាត់តាំងពួកអ្នកឱ្យធ្វើជាអ្នកគ្រប់គ្រង ហើយទ្រង់បានប្រទានឱ្យពួកអ្នកនូវអ្វីដែលទ្រង់មិនដែលប្រទានឱ្យនរណាម្នាក់នៅលើពិភពលោក(នៅសម័យនោះ) ។

يَٰقَوۡمِ ٱدۡخُلُواْ ٱلۡأَرۡضَ ٱلۡمُقَدَّسَةَ ٱلَّتِي كَتَبَ
ٱللَّهُ لَكُمۡ وَلَا تَرۡتَدُّواْ عَلَىٰٓ أَدۡبَارِكُمۡ فَتَنقَلِبُواْ
خَٰسِرِينَ ٢١

២១-ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកចូលទៅក្នុងទឹកដីដ៏ស្អាតស្អំ(ប៉ាឡេស្ទីន)ដែលអល់ឡោះបានកំណត់ឱ្យពួកអ្នកចុះ ហើយពួកអ្នកកុំត្រឡប់ក្រោយឱ្យសោះ ជាហេតុធ្វើឱ្យពួកអ្នកនឹងក្លាយជាពួកដែលខាតបង់ ។

قَالُواْ يَٰمُوسَىٰٓ إِنَّ فِيهَا قَوۡمٗا جَبَّارِينَ وَإِنَّا لَن
نَّدۡخُلَهَا حَتَّىٰ يَخۡرُجُواْ مِنۡهَا فَإِن يَخۡرُجُواْ
مِنۡهَا فَإِنَّا دَٰخِلُونَ ٢٢

២២-ពួកគេបានតបថាៈ ឱមូសា! ពិតប្រាកដណាស់ នៅក្នុង(ទឹកដីដ៏ស្អាតស្អំ)នោះ មានមួយក្រុមដែលមានឥទ្ធិពលខ្លាំងក្លា ហើយពិតប្រាកដណាស់ ពួកយើងមិនអាចចូលទៅទីនោះបានទេ លុះត្រាតែពួកគេចេញពីទីនោះសិន ។ ប្រសិនបើពួកគេចាកចេញពីទីនោះ គឺពួកយើងពិតជានឹងចូល ។

قَالَ رَجُلَانِ مِنَ ٱلَّذِينَ يَخَافُونَ أَنْعَمَ
ٱللَّهُ عَلَيْهِمَا ٱدْخُلُواْ عَلَيْهِمُ ٱلْبَابَ فَإِذَا
دَخَلْتُمُوهُ فَإِنَّكُمْ غَٰلِبُونَۚ وَعَلَى ٱللَّهِ
فَتَوَكَّلُوٓاْ إِن كُنتُم مُّؤْمِنِينَ ٢٣

២៣-បុរសពីរនាក់ក្នុងចំណោមបណ្តាអ្នកដែលកោតខ្លាចអល់ឡោះដែលអល់ឡោះបានប្រទានលាភសក្ការៈដល់ពួកគេទាំងពីរបាននិយាយថាៈ ចូរពួកអ្នកសម្រុកចូលទៅកាន់ពួកគេតាមច្រកទ្វារ ។ បើកាលណាពួកអ្នកបានចូលតាមវា ពិតប្រាកដណាស់ពួកអ្នកគឺជាអ្នកដែលមានជ័យជំនះ ។ ហើយចូរពួកអ្នកប្រគល់ការទុកចិត្តចំពោះអល់ឡោះចុះ ប្រសិនបើពួកអ្នកជាអ្នកមានជំនឿ ។

قَالُواْ يَٰمُوسَىٰٓ إِنَّا لَن نَّدْخُلَهَآ أَبَدًا مَّا دَامُواْ
فِيهَاۖ فَٱذْهَبْ أَنتَ وَرَبُّكَ فَقَٰتِلَآ إِنَّا هَٰهُنَا
قَٰعِدُونَ ٢٤

២៤-ពួកគេ( ក្រុមរបស់មូសា) បាននិយាយថាៈ ឱមូសា! ពិតប្រាកដណាស់ ពួកយើងមិនអាចចូលទីនោះបានជាដាច់ខាត ដរាបណាពួកគេនៅទីនោះ ។ ចូរអ្នក និងម្ចាស់របស់អ្នកធ្វើដំណើរទៅហើយចូរអ្នកទាំងពីរច្បាំងចុះ ពិតប្រាកដណាស់ពួកយើងអង្គុយនៅទីនេះហើយ ។

قَالَ رَبِّ إِنِّي لَآ أَمْلِكُ إِلَّا نَفْسِي وَأَخِيۖ
فَٱفْرُقْ بَيْنَنَا وَبَيْنَ ٱلْقَوْمِ ٱلْفَٰسِقِينَ ٢٥

២៥-មូសាបានពោលថាៈ ឱម្ចាស់របស់ខ្ញុំ! ខ្ញុំពិតជាមិនអាចគ្រប់គ្រងបានក្រៅពីរូបខ្ញុំ និងបងរបស់ខ្ញុំឡើយ ។ ហេតុនេះ សូមទ្រង់មេត្តាបំបែករវាងពួកយើងនិងក្រុមដែលប្រព្រឹត្តបទល្មើសផង ។

قَالَ فَإِنَّهَا مُحَرَّمَةٌ عَلَيْهِمْۛ أَرْبَعِينَ سَنَةًۛ
يَتِيهُونَ فِي ٱلْأَرْضِۚ فَلَا تَأْسَ عَلَى ٱلْقَوْمِ
ٱلْفَٰسِقِينَ ٢٦

២៦-អល់ឡោះបានមានបន្ទូលថាៈ ការពិតវា( ទឹកដីដ៏ស្អាតស្អំ) ត្រូវបានហាមឃាត់ចំពោះពួកគេរយៈពេលសែសិបឆ្នាំ ។ ពួកគេវង្វេងនៅលើទឹកដីនោះ ។ ហេតុនេះអ្នកមិនត្រូវព្រួយបារម្ភចំពោះក្រុមដែលប្រព្រឹត្តបទល្មើសឡើយ ។

۞ وَٱتْلُ عَلَيْهِمْ نَبَأَ ٱبْنَيْ ءَادَمَ بِٱلْحَقِّ إِذْ قَرَّبَا
قُرْبَانًا فَتُقُبِّلَ مِنْ أَحَدِهِمَا وَلَمْ يُتَقَبَّلْ مِنَ
ٱلْأٓخَرِ قَالَ لَأَقْتُلَنَّكَۖ قَالَ إِنَّمَا يَتَقَبَّلُ ٱللَّهُ
مِنَ ٱلْمُتَّقِينَ ٢٧

២៧-ចូរអ្នក( មូហាំម៉ាត់) និទានប្រាប់ពួកគេ( អំបូរអ៊ីស្រាអែល) អំពីប្រវត្តិពិតនៃកូនទាំងពីររបស់អាដាំ( កពេល និងហាពេល) នៅពេលដែលពួកគេទាំងពីរបានធ្វើគូរបា្ពន( ការសំឡេះសត្វដើម្បីអល់ឡោះ) ដូច្នេះគេ( អល់ឡោះ) ក៏បានទទួលយកគូរបា្ពនម្នាក់ក្នុងចំណោមពួកគេទាំងពីរ( ហាពេល) តែគេមិនទទួលយកគូរបា្ពនម្នាក់ទៀតឡើយ ។ គេ( កពេល) បានព្រមានថាៈ ខ្ញុំប្រាកដជានឹងសម្លាប់ឯង ។ គេ( ហាពេល) បានតបថាៈ ជាការពិតណាស់អល់ឡោះទទួលយក( គូរបា្ពន) ក្នុងចំណោមអ្នកដែលគោរពកោតខ្លាចអល់ឡោះ ។

لَئِنۢ بَسَطتَ إِلَيَّ يَدَكَ لِتَقْتُلَنِي مَآ أَنَا۠ بِبَاسِطٖ

២៨-ប្រសិនបើអ្នកលើកដៃរបស់អ្នកមកចំពោះខ្ញុំ ដើម្បីសម្លាប់

يَدِيَ إِلَيۡكَ لِأَقۡتُلَكَۖ إِنِّيٓ أَخَافُ ٱللَّهَ رَبَّ
ٱلۡعَٰلَمِينَ ٢٨

ខ្ញុំ ខ្ញុំមិនលើកដៃរបស់ខ្ញុំទៅចំពោះអ្នកដើម្បីសម្លាប់អ្នកវិញទេ។ ពិតប្រាដកណាស់ ខ្ញុំខ្លាចអល់ឡោះដែលជាម្ចាស់គ្រប់គ្រងពិភពទាំងអស់។

إِنِّيٓ أُرِيدُ أَن تَبُوٓأَ بِإِثۡمِي وَإِثۡمِكَ فَتَكُونَ مِنۡ
أَصۡحَٰبِ ٱلنَّارِۚ وَذَٰلِكَ جَزَٰٓؤُاْ ٱلظَّٰلِمِينَ ٢٩

២៩-ពិតប្រាកដកណាស់ ខ្ញុំចង់ឱ្យអ្នក(ពេលដែលស្លាប់)នាំទៅជាមួយនូវបាបកម្មដោយសារការសម្លាប់ខ្ញុំ និងបាបកម្មរបស់អ្នក(មានពីមុនមក)។ ដូច្នេះអ្នកនឹងស្ថិតនៅក្នុងចំណោមពួកឋាននរក។ ទាំងនោះគឺជាការតបស្នងរបស់ពួកដែលបំពាន។

فَطَوَّعَتۡ لَهُۥ نَفۡسُهُۥ قَتۡلَ أَخِيهِ فَقَتَلَهُۥ
فَأَصۡبَحَ مِنَ ٱلۡخَٰسِرِينَ ٣٠

៣០-ហេតុនេះអារម្មណ៍របស់គេ(កពេល)បានជំរុញឱ្យគេសម្លាប់ប្អូនរបស់គេ រួចមកគេក៏បានសម្លាប់ប្អូនរបស់គេមែន។ ដូច្នេះ គេក៏ក្លាយជាអ្នកដែលស្ថិតនៅក្នុងចំណោមពួកដែលខាតបង់។

فَبَعَثَ ٱللَّهُ غُرَابٗا يَبۡحَثُ فِي ٱلۡأَرۡضِ لِيُرِيَهُۥ
كَيۡفَ يُوَٰرِي سَوۡءَةَ أَخِيهِۚ قَالَ يَٰوَيۡلَتَىٰٓ
أَعَجَزۡتُ أَنۡ أَكُونَ مِثۡلَ هَٰذَا ٱلۡغُرَابِ
فَأُوَٰرِيَ سَوۡءَةَ أَخِيۖ فَأَصۡبَحَ
مِنَ ٱلنَّٰدِمِينَ ٣١

៣១-ក្រោយមកអល់ឡោះបានបញ្ជូនសត្វក្អែកមួយមកកកាយដីដើម្បីឱ្យគេ(កពេល)ឃើញរបៀបកប់សាកសពប្អូនរបស់គេ។ គេបានត្អូញត្អែថា: ចង្រៃហើយខ្ញុំ! តើហេតុអ្វីបានជាខ្ញុំអសមត្ថភាពមិនអាចធ្វើដូចសត្វក្អែកនេះ ដើម្បីបញ្ចុះសាកសពប្អូនរបស់ខ្ញុំបាន? បន្ទាប់មកគេក៏ក្លាយទៅជាអ្នកដែលស្ថិតនៅក្នុងចំណោមពួកដែលសោកស្តាយ។

مِنۡ أَجۡلِ ذَٰلِكَ كَتَبۡنَا عَلَىٰ بَنِيٓ إِسۡرَٰٓءِيلَ
أَنَّهُۥ مَن قَتَلَ نَفۡسَۢا بِغَيۡرِ نَفۡسٍ أَوۡ فَسَادٖ فِي
ٱلۡأَرۡضِ فَكَأَنَّمَا قَتَلَ ٱلنَّاسَ جَمِيعٗا
وَمَنۡ أَحۡيَاهَا فَكَأَنَّمَآ أَحۡيَا ٱلنَّاسَ
جَمِيعٗاۚ وَلَقَدۡ جَآءَتۡهُمۡ رُسُلُنَا بِٱلۡبَيِّنَٰتِ
ثُمَّ إِنَّ كَثِيرٗا مِّنۡهُم بَعۡدَ ذَٰلِكَ فِي ٱلۡأَرۡضِ
لَمُسۡرِفُونَ ٣٢

៣២-ដោយមូលហេតុនេះហើយ ទើបយើងបានដាក់បញ្ញត្តិទៅលើអំបូរអ៊ីស្រាអែលថា: ជាការពិតណាស់ អ្នកណាហើយបានសម្លាប់បុគ្គលណាម្នាក់ដោយគ្មានមូលហេតុ ឬបង្កវិនាសកម្មនៅលើផែនដី គឺហាក់បីដូចជាគេបានសម្លាប់មនុស្សលោកទាំងអស់។ ហើយអ្នកណាបានសង្គ្រោះជីវិតបុគ្គលណាម្នាក់ គឺហាក់បីដូចជាគេបានជួយសង្គ្រោះជីវិតមនុស្សលោកទាំងអស់។ ហើយជាការពិតណាស់ បណ្ដាអ្នកនាំសាររបស់យើងបាននាំភស្តុតាងយ៉ាងច្បាស់លាស់ជាច្រើនមកឱ្យពួកគេ។ បន្ទាប់មក ពិតប្រាកដណាស់ពួកគេភាគច្រើនគឺជាពួកដែលប្រព្រឹត្តបទល្មើសនៅលើផែនដីក្រោយពីនោះ។

إِنَّمَا جَزَٰٓؤُاْ ٱلَّذِينَ يُحَارِبُونَ ٱللَّهَ وَرَسُولَهُۥ
وَيَسۡعَوۡنَ فِي ٱلۡأَرۡضِ فَسَادًا أَن يُقَتَّلُوٓاْ أَوۡ

៣៣-ពិតប្រាកដណាស់ ការតបស្នងរបស់ពួកដែលធ្វើសង្គ្រាមប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ និងបង្កវិនាសកម្ម

يُصَلَّبُوٓاْ أَوۡ تُقَطَّعَ أَيۡدِيهِمۡ وَأَرۡجُلُهُم مِّنۡ
خِلَٰفٍ أَوۡ يُنفَوۡاْ مِنَ ٱلۡأَرۡضِۚ ذَٰلِكَ لَهُمۡ
خِزۡيٞ فِي ٱلدُّنۡيَاۖ وَلَهُمۡ فِي ٱلۡأٓخِرَةِ عَذَابٌ
عَظِيمٌ ٣٣

នៅលើផែនដី (ទោសរបស់ពួកគេ) ពួកគេនឹងត្រូវគេប្រហារជីវិត ឬចងឆ្កាង ឬកាត់ដៃនិងជើងរបស់ពួកគេឆ្លាស់គ្នា ឬត្រូវគេនិរទេសចេញពីទឹកដី ។ ទាំងនោះគឺដើម្បីឱ្យពួកគេអាប់ឱនកិត្តិយសនៅក្នុងលោកិយ ហើយនៅថ្ងៃបរលោកពួកគេនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត ។

إِلَّا ٱلَّذِينَ تَابُواْ مِن قَبۡلِ أَن تَقۡدِرُواْ
عَلَيۡهِمۡۖ فَٱعۡلَمُوٓاْ أَنَّ ٱللَّهَ غَفُورٞ رَّحِيمٞ ٣٤

៣៤-លើកលែងតែបណ្ដាអ្នកដែលបានសារភាពកំហុសមុននឹងពួកអ្នកចាប់ខ្លួនពួកគេបាន ។ ដូច្នេះចូរពួកអ្នកដឹងថាៈ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ وَٱبۡتَغُوٓاْ
إِلَيۡهِ ٱلۡوَسِيلَةَ وَجَٰهِدُواْ فِي سَبِيلِهِۦ لَعَلَّكُمۡ
تُفۡلِحُونَ ٣٥

៣៥-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងត្រូវស្វែងរកមធ្យោបាយដើម្បីខិតជិតទ្រង់ ហើយនិងត្រូវតស៊ូក្នុងមាគ៌ារបស់ទ្រង់ ដើម្បីពួកអ្នកនឹងទទួលជោគជ័យ ។

إِنَّ ٱلَّذِينَ كَفَرُواْ لَوۡ أَنَّ لَهُم مَّا فِي
ٱلۡأَرۡضِ جَمِيعٗا وَمِثۡلَهُۥ مَعَهُۥ لِيَفۡتَدُواْ بِهِۦ مِنۡ
عَذَابِ يَوۡمِ ٱلۡقِيَٰمَةِ مَا تُقُبِّلَ مِنۡهُمۡۖ وَلَهُمۡ
عَذَابٌ أَلِيمٞ ٣٦

៣៦-ជាការពិតណាស់ ពួកដែលប្រឆាំង ប្រសិនបើពួកគេមានអ្វីៗទាំងអស់នៅលើផែនដីនេះ និងមានដូចគ្នាទៀតដើម្បីលោះខ្លួនពួកគេពីទារុណកម្មនៅថ្ងៃបរលោកក៏ដោយ ក៏គេមិនទទួលយកពីពួកគេដែរ ហើយពួកគេនឹងត្រូវទទួលទារុណកម្មដ៏ឈឺចាប់ ។

يُرِيدُونَ أَن يَخۡرُجُواْ مِنَ ٱلنَّارِ وَمَا هُم
بِخَٰرِجِينَ مِنۡهَاۖ وَلَهُمۡ عَذَابٞ مُّقِيمٞ ٣٧

៣៧-ពួកគេមានបំណងចេញពីឋាននរក តែពួកគេមិនអាចចេញពីទីនោះបានឡើយ ហើយសម្រាប់ពួកគេគឺទារុណកម្មជានិរន្តរ៍ ។

وَٱلسَّارِقُ وَٱلسَّارِقَةُ فَٱقۡطَعُوٓاْ أَيۡدِيَهُمَا
جَزَآءَۢ بِمَا كَسَبَا نَكَٰلٗا مِّنَ ٱللَّهِۗ وَٱللَّهُ
عَزِيزٌ حَكِيمٞ ٣٨

៣៨-ចោរប្រុសនិងចោរស្រី ចូរពួកអ្នកកាត់ដៃគេទាំងពីរនាក់ជាការតបស្នងនូវអ្វីដែលពួកគេទាំងពីរបានប្រព្រឹត្តជាទណ្ឌកម្មមកពីអល់ឡោះ ។ ហើយអល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

فَمَن تَابَ مِنۢ بَعۡدِ ظُلۡمِهِۦ وَأَصۡلَحَ فَإِنَّ
ٱللَّهَ يَتُوبُ عَلَيۡهِۚ إِنَّ ٱللَّهَ غَفُورٞ رَّحِيمٌ ٣٩

៣៩-ប៉ុន្តែអ្នកណាបានសុំអភ័យទោសបន្ទាប់ពីបានបំពាន(លួច) និងកែខ្លួនឡើងវិញ អល់ឡោះពិតជាទទួលយកនូវការសុំអភ័យទោសរបស់គេ ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

أَلَمۡ تَعۡلَمۡ أَنَّ ٱللَّهَ لَهُۥ مُلۡكُ ٱلسَّمَٰوَٰتِ
وَٱلۡأَرۡضِ يُعَذِّبُ مَن يَشَآءُ وَيَغۡفِرُ لِمَن يَشَآءُۗ
وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٤٠

۞ يَٰٓأَيُّهَا ٱلرَّسُولُ لَا يَحۡزُنكَ ٱلَّذِينَ
يُسَٰرِعُونَ فِي ٱلۡكُفۡرِ مِنَ ٱلَّذِينَ قَالُوٓاْ ءَامَنَّا
بِأَفۡوَٰهِهِمۡ وَلَمۡ تُؤۡمِن قُلُوبُهُمۡۛ وَمِنَ ٱلَّذِينَ
هَادُواْۛ سَمَّٰعُونَ لِلۡكَذِبِ سَمَّٰعُونَ
لِقَوۡمٍ ءَاخَرِينَ لَمۡ يَأۡتُوكَۖ يُحَرِّفُونَ ٱلۡكَلِمَ
مِنۢ بَعۡدِ مَوَاضِعِهِۦۖ يَقُولُونَ إِنۡ أُوتِيتُمۡ هَٰذَا
فَخُذُوهُ وَإِن لَّمۡ تُؤۡتَوۡهُ فَٱحۡذَرُواْۚ وَمَن يُرِدِ
ٱللَّهُ فِتۡنَتَهُۥ فَلَن تَمۡلِكَ لَهُۥ مِنَ ٱللَّهِ شَيۡـًٔاۚ
أُوْلَٰٓئِكَ ٱلَّذِينَ لَمۡ يُرِدِ ٱللَّهُ أَن يُطَهِّرَ
قُلُوبَهُمۡۚ لَهُمۡ فِي ٱلدُّنۡيَا خِزۡيٞۖ وَلَهُمۡ فِي
ٱلۡأٓخِرَةِ عَذَابٌ عَظِيمٞ ٤١

سَمَّٰعُونَ لِلۡكَذِبِ أَكَّٰلُونَ
لِلسُّحۡتِۚ فَإِن جَآءُوكَ فَٱحۡكُم بَيۡنَهُمۡ
أَوۡ أَعۡرِضۡ عَنۡهُمۡۖ وَإِن تُعۡرِضۡ عَنۡهُمۡ فَلَن
يَضُرُّوكَ شَيۡـٔٗاۖ وَإِنۡ حَكَمۡتَ فَٱحۡكُم بَيۡنَهُم
بِٱلۡقِسۡطِۚ إِنَّ ٱللَّهَ يُحِبُّ ٱلۡمُقۡسِطِينَ ٤٢

وَكَيۡفَ يُحَكِّمُونَكَ وَعِندَهُمُ ٱلتَّوۡرَىٰةُ فِيهَا

៤០-តើអ្នកមិនដឹងទេឬថា ពិតប្រាកដណាស់ អល់ឡោះមានអំណាចគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដីនោះ? ទ្រង់ធ្វើទារុណកម្មចំពោះអ្នកណាដែលទ្រង់មានចេតនា ហើយទ្រង់ក៏អភ័យទោសចំពោះអ្នកណាដែលទ្រង់មានចេតនាដែរ ។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

៤១-ឱអ្នកនាំសារ! ចូរកុំព្រួយបារម្ភដោយសារតែពួកដែលរហ័សទៅរកភាពគ្មានជំនឿក្នុងចំណោមពួកដែលបាននិយាយថាៈ ពួកយើងមានជំនឿតែមាត់របស់ពួកគេ តែក្នុងចិត្តរបស់ពួកគេវិញគ្មានជំនឿឱ្យសោះ ។ ហើយពួកយ៉ាហ៊ូទីមួយចំនួនចូលចិត្តស្តាប់ការភូតកុហក ចូលចិត្តស្តាប់ពាក្យសំដីក្រុមដទៃដោយពួកគេមិនដែលមកជួបនឹងអ្នកឡើយ ។ ពួកគេកែប្រែពាក្យសំដី( របស់អល់ឡោះ) ឱ្យខុសពីអត្ថន័យរបស់វាបន្ទាប់ពីគេបានដាក់បទបញ្ញត្តិរួច ។ ពួកគេបន្តថាៈ ប្រសិនបើគេ( មូហាំម៉ាត់) បាននាំមកឱ្យពួកអ្នកដូចគ្នានេះ ( អ្វីដែលបានកែប្រែ) ចូរពួកអ្នកទទួលយកវាចុះ ។ តែបើគេមិននាំមកដូចគ្នានេះទេ ចូរពួកអ្នកប្រុងប្រយ័ត្ន ។ ហើយបើអ្នកណាដែលអល់ឡោះមានចេតនាឱ្យគេវង្វេង អ្នក( មូហាំម៉ាត់) មិនអាចការពារ ( ចង្អុលបង្ហាញ) អ្នកនោះពី( ទារុណកម្ម) អល់ឡោះបានឡើយ ។ ពួកទាំងនោះជាពួកដែលអល់ឡោះមិនចង់សំអាតចិត្តរបស់ពួកគេ ។ ពួកគេនឹងអាម៉ាស់ជាទីបំផុតនៅក្នុងលោកិយនេះ ហើយនៅថ្ងៃបរលោកវិញពួកគេនឹងទទួលទារុណកម្មយ៉ាងធ្ងន់ធ្ងរបំផុត ។

៤២-ពួកគេ( យ៉ាហ៊ូទី) ចូលចិត្តស្តាប់ការភូតកុហក ចូលចិត្តស៊ីទ្រព្យសម្បត្តិដែលគេហាមឃាត់ ។ ប្រសិនបើពួកគេមករកអ្នក ( មូហាំម៉ាត់) ចូរអ្នកកាត់សេចក្តីរវាងពួកគេចុះ ឬអ្នកត្រូវគេចចេញពីពួកគេ ។ ហើយប្រសិនបើអ្នកគេចចេញពីពួកគេ គឺពួកគេមិនអាចបង្កគ្រោះថ្នាក់អ្វីដល់អ្នកបានឡើយ ។ តែបើអ្នកកាត់សេចក្តីវិញ អ្នកត្រូវកាត់សេចក្តីរវាងពួកគេដោយយុត្តិធម៌ ។ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្តាអ្នកដែលយុត្តិធម៌ ។

៤៣-តើពួកគេសុំឱ្យអ្នកកាត់សេចក្តីយ៉ាងដូចម្តេច បើពួកគេមានគម្ពីរតាវរ៉តដែលនៅក្នុងនោះមានបញ្ញត្តិរបស់អល់ឡោះ បន្ទាប់

حُكۡمُ ٱللَّهِ ثُمَّ يَتَوَلَّوۡنَ مِنۢ بَعۡدِ ذَٰلِكَۚ
وَمَآ أُوْلَٰٓئِكَ بِٱلۡمُؤۡمِنِينَ ﴿٤٣﴾

មកពួកគេនៅតែបែរចេញក្រោយពីកាត់សេចក្ដីនោះ? ហើយពួកទាំងនោះជាពួកដែលពុំមែនជាអ្នកមានជំនឿឡើយ ។

إِنَّآ أَنزَلۡنَا ٱلتَّوۡرَىٰةَ فِيهَا هُدٗى وَنُورٞۚ يَحۡكُمُ بِهَا
ٱلنَّبِيُّونَ ٱلَّذِينَ أَسۡلَمُواْ لِلَّذِينَ هَادُواْ
وَٱلرَّبَّٰنِيُّونَ وَٱلۡأَحۡبَارُ بِمَا ٱسۡتُحۡفِظُواْ مِن
كِتَٰبِ ٱللَّهِ وَكَانُواْ عَلَيۡهِ شُهَدَآءَۚ فَلَا
تَخۡشَوُاْ ٱلنَّاسَ وَٱخۡشَوۡنِ وَلَا تَشۡتَرُواْ بِـَٔايَٰتِي
ثَمَنٗا قَلِيلٗاۚ وَمَن لَّمۡ يَحۡكُم بِمَآ أَنزَلَ ٱللَّهُ
فَأُوْلَٰٓئِكَ هُمُ ٱلۡكَٰفِرُونَ ﴿٤٤﴾

៤៤-ពិតប្រាកដណាស់យើងបានបញ្ចុះគម្ពីរតាវ៉រ៉ត(ឱ្យមូសា) ដែលនៅក្នុងនោះមានការចង្អុលបង្ហាញ និងជាពន្លឺដោយបណ្ដាណាពីដែលបានប្រគល់ខ្លួនជូនអល់ឡោះកាត់សេចក្ដីតាមគម្ពីរតាវ៉រ៉ត សម្រាប់ពួកយ៉ាហ៊ូទី ។ ហើយពួកដែលចេះដឹងជ្រៅជ្រះផ្នែកសាសនា និងពួកដឹកនាំសាសនា(ក៏បានកាត់សេចក្ដីសម្រាប់ពួកយ៉ាហ៊ូទីតាមគម្ពីរតាវ៉រ៉ត ក្រោយពីណាពីទាំងនោះដែរ) ដោយសារគេ(ណាពី) ប្រើពួកគេឱ្យថែរក្សាការពារគម្ពីររបស់អល់ឡោះ និងឱ្យពួកគេធ្វើជាសាក្សីលើគម្ពីរនេះ ។ ដូច្នេះ ចូរពួកអ្នកកុំខ្លាចមនុស្សលោកឱ្យសោះ តែពួកអ្នកត្រូវខ្លាចយើងវិញ ។ ហើយចូរពួកអ្នកកុំលក់អាយ៉ាត់៧(ច្បាប់) របស់យើងក្នុងតម្លៃដ៏តិចតួចឱ្យសោះ ។ ហើយអ្នកណាដែលមិនកាត់សេចក្ដីតាមអ្វីដែលអល់ឡោះបានបញ្ចុះមក ពួកទាំងនោះគឺជាពួកដែលប្រឆាំង ។

وَكَتَبۡنَا عَلَيۡهِمۡ فِيهَآ أَنَّ ٱلنَّفۡسَ بِٱلنَّفۡسِ
وَٱلۡعَيۡنَ بِٱلۡعَيۡنِ وَٱلۡأَنفَ بِٱلۡأَنفِ
وَٱلۡأُذُنَ بِٱلۡأُذُنِ وَٱلسِّنَّ بِٱلسِّنِّ وَٱلۡجُرُوحَ
قِصَاصٞۚ فَمَن تَصَدَّقَ بِهِۦ فَهُوَ كَفَّارَةٞ
لَّهُۥۚ وَمَن لَّمۡ يَحۡكُم بِمَآ أَنزَلَ ٱللَّهُ فَأُوْلَٰٓئِكَ
هُمُ ٱلظَّٰلِمُونَ ﴿٤٥﴾

៤៥-យើងបានដាក់បញ្ញត្តិទៅលើពួកគេ(យ៉ាហ៊ូទី) នៅក្នុងគម្ពីរ(តាវ៉រ៉ត) នោះ ពិតប្រាកដណាស់ជីវិតសងដោយជីវិត ភ្នែកសងដោយភ្នែក ច្រមុះសងដោយច្រមុះ ធ្មេញសងដោយធ្មេញ ហើយរបួសស្នាមក៏ត្រូវសងវិញដែរ ។ ដូច្នេះអ្នកណាហើយបានអនុគ្រោះចំពោះគេ(ជនល្មើស) គឺអ្នកនោះត្រូវបានគេ(អល់ឡោះ) លុបលាងទោសឱ្យគេ ។ ហើយអ្នកណាដែលមិនកាត់សេចក្ដីតាមអ្វីដែលអល់ឡោះបានបញ្ចុះមកទេនោះ អ្នកទាំងនោះគឺជាពួកដែលបំពាន ។

وَقَفَّيۡنَا عَلَىٰٓ ءَاثَٰرِهِم بِعِيسَى ٱبۡنِ مَرۡيَمَ
مُصَدِّقٗا لِّمَا بَيۡنَ يَدَيۡهِ مِنَ ٱلتَّوۡرَىٰةِۖ وَءَاتَيۡنَٰهُ
ٱلۡإِنجِيلَ فِيهِ هُدٗى وَنُورٞ وَمُصَدِّقٗا لِّمَا
بَيۡنَ يَدَيۡهِ مِنَ ٱلتَّوۡرَىٰةِ وَهُدٗى وَمَوۡعِظَةٗ
لِّلۡمُتَّقِينَ ﴿٤٦﴾

៤៦-ហើយយើងបានចាត់តាំងអ៊ីសាកូនម៉ារយ៉ាំបន្ទាប់ពីពួកគេ(បណ្ដាណាពី) ដើម្បីបញ្ជាក់ពីអ្វីដែលមានពីមុនមកនៅក្នុងគម្ពីរតាវ៉រ៉ត ។ ហើយយើងបានប្រទានឱ្យគេ(អ៊ីសា) នូវគម្ពីរអ៊ីញជីលដែលមានការចង្អុលបង្ហាញ និងពន្លឺនៅក្នុងនោះនិងដើម្បីបញ្ជាក់នូវអ្វីដែលមានពីមុនមកនៅក្នុងគម្ពីរតាវ៉រ៉ត ហើយនិងដើម្បីចង្អុលបង្ហាញនិងជាការទូន្មានចំពោះបណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ ។

وَلۡيَحۡكُمۡ أَهۡلُ ٱلۡإِنجِيلِ بِمَآ أَنزَلَ ٱللَّهُ
فِيهِۚ وَمَن لَّمۡ يَحۡكُم بِمَآ أَنزَلَ ٱللَّهُ فَأُوْلَٰٓئِكَ
هُمُ ٱلۡفَٰسِقُونَ ٤٧

៤៧-ហើយចូរឱ្យអ្នកដែលកាន់តាមគម្ពីរអ៊ីញជីលកាត់សេចក្ដីនូវអ្វីដែលអល់ឡោះបានបញ្ចុះមកនៅក្នុងវាចុះ។ ហើយអ្នកណាមិនកាត់សេចក្ដីតាមអ្វីដែលអល់ឡោះបានបញ្ចុះមក ពួកទាំងនោះគឺជាពួកដែលល្មើសនឹងបទបញ្ជារបស់អល់ឡោះ។

وَأَنزَلۡنَآ إِلَيۡكَ ٱلۡكِتَٰبَ بِٱلۡحَقِّ مُصَدِّقٗا لِّمَا
بَيۡنَ يَدَيۡهِ مِنَ ٱلۡكِتَٰبِ وَمُهَيۡمِنًا عَلَيۡهِۖ
فَٱحۡكُم بَيۡنَهُم بِمَآ أَنزَلَ ٱللَّهُۖ وَلَا تَتَّبِعۡ
أَهۡوَآءَهُمۡ عَمَّا جَآءَكَ مِنَ ٱلۡحَقِّۚ لِكُلّٖ جَعَلۡنَا
مِنكُمۡ شِرۡعَةٗ وَمِنۡهَاجٗاۚ وَلَوۡ شَآءَ ٱللَّهُ
لَجَعَلَكُمۡ أُمَّةٗ وَٰحِدَةٗ وَلَٰكِن لِّيَبۡلُوَكُمۡ فِي مَآ
ءَاتَىٰكُمۡۖ فَٱسۡتَبِقُواْ ٱلۡخَيۡرَٰتِۚ إِلَى ٱللَّهِ
مَرۡجِعُكُمۡ جَمِيعٗا فَيُنَبِّئُكُم بِمَا كُنتُمۡ فِيهِ
تَخۡتَلِفُونَ ٤٨

៤៨-ហើយយើងបានបញ្ចុះគម្ពីរគួរអានឱ្យអ្នកដោយនាំមកនូវការពិត ដើម្បីបញ្ជាក់នូវអ្វីដែលមាននៅក្នុងគម្ពីរពីមុនមក និងបញ្ជាក់ពីភាពត្រឹមត្រូវនៃគម្ពីរទាំងនោះ។ ដូច្នេះ ចូរអ្នកកាត់សេចក្ដីរវាងពួកគេទៅតាមអ្វីដែលអល់ឡោះបានបញ្ចុះមក(នៅក្នុងគម្ពីរគួរអាន)។ ហើយចូរអ្នកកុំធ្វើតាមចំណង់របស់ពួកគេដោយចាកចេញអំពីអ្វីដែលបានមកដល់អ្នកនូវការពិតនោះឱ្យសោះ។ រាល់ៗប្រជាជាតិក្នុងចំណោមពួកអ្នក យើងបានបង្កើតច្បាប់ និងមាគ៌ាយ៉ាងច្បាស់លាស់។ ប្រសិនបើអល់ឡោះមានចេតនា ទ្រង់ប្រាកដជាបង្កើតពួកអ្នកស្ថិតក្នុងសាសនាតែមួយ ប៉ុន្តែទ្រង់ចង់សាកល្បងពួកអ្នកនូវអ្វីដែលទ្រង់បានប្រទានដល់ពួកអ្នក។ ដូច្នេះចូរពួកអ្នកប្រណាំងប្រជែងគ្នាសាងអំពើល្អចុះ។ កន្លែងវិលត្រឡប់របស់ពួកអ្នកទាំងអស់គ្នាគឺទៅកាន់អល់ឡោះតែមួយគត់។ ដូច្នេះទ្រង់នឹងបញ្ជាក់ប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកធ្លាប់ខ្វែងយោបល់គ្នានៅក្នុងបញ្ហានោះ។

وَأَنِ ٱحۡكُم بَيۡنَهُم بِمَآ أَنزَلَ ٱللَّهُ وَلَا تَتَّبِعۡ
أَهۡوَآءَهُمۡ وَٱحۡذَرۡهُمۡ أَن يَفۡتِنُوكَ عَنۢ
بَعۡضِ مَآ أَنزَلَ ٱللَّهُ إِلَيۡكَۖ فَإِن تَوَلَّوۡاْ فَٱعۡلَمۡ
أَنَّمَا يُرِيدُ ٱللَّهُ أَن يُصِيبَهُم بِبَعۡضِ ذُنُوبِهِمۡۗ
وَإِنَّ كَثِيرٗا مِّنَ ٱلنَّاسِ لَفَٰسِقُونَ ٤٩

៤៩-ចូរអ្នក(មូហាំម៉ាត់)កាត់សេចក្ដីរវាងពួកគេទៅតាមអ្វីដែលអល់ឡោះបានបញ្ចុះមក ហើយកុំធ្វើតាមចំណង់របស់ពួកគេឱ្យសោះនិងត្រូវប្រុងប្រយ័ត្នចំពោះពួកគេដើម្បីកុំឱ្យពួកគេអូសទាញអ្នកឱ្យឃ្លាតចេញពីមួយចំនួននូវអ្វីដែលអល់ឡោះបានបញ្ចុះមកឱ្យអ្នក។ តែប្រសិនបើពួកគេងាកចេញ(ពីច្បាប់អល់ឡោះ)វិញ ចូរអ្នកជ្រាបថាៈ ការពិតអល់ឡោះមានបំណងឱ្យពួកគេរងទារុណកម្មដោយសារបាបកម្មមួយចំនួនរបស់ពួកគេ។ ហើយពិតប្រាកដណាស់មនុស្សភាគច្រើនគឺជាអ្នកដែលល្មើសនឹងបទបញ្ជារបស់អល់ឡោះ។

أَفَحُكۡمَ ٱلۡجَٰهِلِيَّةِ يَبۡغُونَۚ وَمَنۡ أَحۡسَنُ مِنَ
ٱللَّهِ حُكۡمٗا لِّقَوۡمٖ يُوقِنُونَ ٥٠

៥០-តើពួកគេ(យ៉ាហ៊ូទី)ស្វែងរកច្បាប់របស់ពួកអវិជ្ជាឬ? តើច្បាប់អ្នកណាដែលប្រសើរជាងច្បាប់របស់អល់ឡោះចំពោះក្រុម

ដែលជឿជាក់នោះ?

۞ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَتَّخِذُواْ ٱلْيَهُودَ
وَٱلنَّصَٰرَىٰٓ أَوْلِيَآءَ ۘ بَعْضُهُمْ أَوْلِيَآءُ بَعْضٍ ۚ
وَمَن يَتَوَلَّهُم مِّنكُمْ فَإِنَّهُۥ مِنْهُمْ ۗ إِنَّ ٱللَّهَ لَا
يَهْدِى ٱلْقَوْمَ ٱلظَّٰلِمِينَ ﴿٥١﴾

៥១-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំយកពួកយ៉ាហ៊ូទី និងពួកណាសរ៉នីធ្វើជាមេដឹកនាំឱ្យសោះ។ ពួកគេជាអ្នកដឹកនាំគ្នាទៅវិញទៅមក។ ហើយអ្នកណាក្នុងចំណោមពួកអ្នកយកពួកគេធ្វើជាមេដឹកនាំនោះ អ្នកនោះពិតជាស្ថិតនៅក្នុងចំណោមពួកគេ។ ពិតប្រាកដណាស់ អល់ឡោះមិនចង្អុលបង្ហាញដល់ក្រុមដែលបំពានឡើយ។

فَتَرَى ٱلَّذِينَ فِى قُلُوبِهِم مَّرَضٌ يُسَٰرِعُونَ
فِيهِمْ يَقُولُونَ نَخْشَىٰٓ أَن تُصِيبَنَا دَآئِرَةٌ ۚ فَعَسَى
ٱللَّهُ أَن يَأْتِىَ بِٱلْفَتْحِ أَوْ أَمْرٍ مِّنْ عِندِهِۦ
فَيُصْبِحُواْ عَلَىٰ مَآ أَسَرُّواْ فِىٓ أَنفُسِهِمْ
نَٰدِمِينَ ﴿٥٢﴾

៥២-អ្នក(មូហាំម៉ាត់)នឹងឃើញពួកដែលនៅក្នុងចិត្តរបស់ពួកគេមានជំងឺ(ពុតត្បុត)ប្រញាប់ប្រញាល់ចងសម្ព័ន្ធមិត្តជាមួយពួកយ៉ាហ៊ូទី និងពួកណាសរ៉នី ដោយពួកគេនិយាយថា: ពួកយើងខ្លាចមានសំណាងអាក្រក់(បរាជ័យ)ធ្លាក់មកលើពួកយើង។ ជួនកាលអល់ឡោះអាចផ្តល់ជ័យជំនះ ឬក៏សម្រេចកិច្ចការអ្វីមួយតាមចេតនារបស់ទ្រង់។ ហេតុនេះពួកគេនឹងក្លាយជាពួកដែលសោកស្តាយលើអ្វីដែលពួកគេលាក់បាំងក្នុងខ្លួនរបស់ពួកគេ ។

وَيَقُولُ ٱلَّذِينَ ءَامَنُوٓاْ أَهَٰٓؤُلَآءِ ٱلَّذِينَ أَقْسَمُواْ
بِٱللَّهِ جَهْدَ أَيْمَٰنِهِمْ ۙ إِنَّهُمْ لَمَعَكُمْ ۚ حَبِطَتْ
أَعْمَٰلُهُمْ فَأَصْبَحُواْ خَٰسِرِينَ ﴿٥٣﴾

៥៣-បណ្តាអ្នកដែលមានជំនឿនិយាយថា: តើពួកនេះឬដែលបានស្បថនឹងអល់ឡោះយ៉ាងម៉ឺងម៉ាត់ថា: ពិតប្រាកដណាស់ ពួកគេនៅជាមួយពួកយើងនោះ? ទង្វើរបស់ពួកគេបានវិនាសអន្តរាយ ហើយពួកគេក៏បានក្លាយជាពួកដែលខាតបង់។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ مَن يَرْتَدَّ مِنكُمْ عَن
دِينِهِۦ فَسَوْفَ يَأْتِى ٱللَّهُ بِقَوْمٍ يُحِبُّهُمْ وَيُحِبُّونَهُۥٓ
أَذِلَّةٍ عَلَى ٱلْمُؤْمِنِينَ أَعِزَّةٍ عَلَى ٱلْكَٰفِرِينَ
يُجَٰهِدُونَ فِى سَبِيلِ ٱللَّهِ وَلَا يَخَافُونَ لَوْمَةَ
لَآئِمٍ ۚ ذَٰلِكَ فَضْلُ ٱللَّهِ يُؤْتِيهِ مَن يَشَآءُ ۚ وَٱللَّهُ
وَٰسِعٌ عَلِيمٌ ﴿٥٤﴾

៥៤-ឱបណ្តាអ្នកដែលមានជំនឿ! អ្នកណាហើយក្នុងចំណោមពួកអ្នកបោះបង់ចោលសាសនា(អ៊ីស្លាម)របស់គេ គឺអល់ឡោះនឹងនាំមកនូវក្រុមមួយផ្សេងទៀតជំនួសវិញ ដែលទ្រង់ស្រឡាញ់ពួកគេ ហើយពួកគេក៏ស្រឡាញ់ទ្រង់វិញដែរ ដោយពួកគេទន់ភ្លន់ចំពោះបណ្តាអ្នកដែលមានជំនឿ និងតឹងរ៉ឹងចំពោះពួកដែលគ្មានជំនឿ ពួកគេតស៊ូក្នុងមាគ៌ារបស់អល់ឡោះ ហើយពួកគេមិនខ្លាចការស្តីបន្ទោសពីនរណាម្នាក់ឡើយ។ ទាំងនោះគឺជាការសន្ដោសប្រណីរបស់អល់ឡោះ ទ្រង់នឹងផ្តល់ឱ្យអ្នកណាដែលទ្រង់មានចេតនា ហើយអល់ឡោះមហាទូលំទូលាយ មហាដឹង។

إِنَّمَا وَلِيُّكُمُ ٱللَّهُ وَرَسُولُهُۥ وَٱلَّذِينَ ءَامَنُواْ

៥៥-ពិតប្រាកដណាស់ អ្នកគាំពាររបស់ពួកអ្នក គឺអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ ហើយនិងបណ្តាអ្នកដែលមានជំនឿដែលប្រតិ-

ٱلَّذِينَ يُقِيمُونَ ٱلصَّلَوٰةَ وَيُؤۡتُونَ ٱلزَّكَوٰةَ وَهُمۡ
رَٰكِعُونَ ٥٥

បត្តិសឡាត និងបរិច្ចាគហ្សាកាត់ដោយពួកគេជាអ្នកឱនលំទោន (គោរពទៅចំពោះអល់ឡោះ) ។

وَمَن يَتَوَلَّ ٱللَّهَ وَرَسُولَهُۥ وَٱلَّذِينَ ءَامَنُواْ فَإِنَّ
حِزۡبَ ٱللَّهِ هُمُ ٱلۡغَٰلِبُونَ ٥٦

៥៦-ហើយអ្នកណាយកអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ និងបណ្ដាអ្នកមានជំនឿធ្វើជាអ្នកគាំពារ ពិតប្រាកដណាស់ ក្រុមរបស់អល់ឡោះគឺជាបណ្ដាអ្នកដែលជោគជ័យ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَتَّخِذُواْ ٱلَّذِينَ ٱتَّخَذُواْ
دِينَكُمۡ هُزُوٗا وَلَعِبٗا مِّنَ ٱلَّذِينَ أُوتُواْ
ٱلۡكِتَٰبَ مِن قَبۡلِكُمۡ وَٱلۡكُفَّارَ أَوۡلِيَآءَۚ وَٱتَّقُواْ
ٱللَّهَ إِن كُنتُم مُّؤۡمِنِينَ ٥٧

៥៧-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំយកពួកដែលយកសាសនារបស់ពួកអ្នកជាការចំអក និងលេងសើចក្នុងចំណោមពួកដែលគេបានផ្ដល់គម្ពីរឱ្យមុនពួកអ្នក និងពួកគ្មានជំនឿនោះធ្វើជាអ្នកដឹកនាំឱ្យសោះ ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ ប្រសិនបើពួកអ្នកជាអ្នកមានជំនឿ ។

وَإِذَا نَادَيۡتُمۡ إِلَى ٱلصَّلَوٰةِ ٱتَّخَذُوهَا هُزُوٗا
وَلَعِبٗاۚ ذَٰلِكَ بِأَنَّهُمۡ قَوۡمٞ لَّا يَعۡقِلُونَ ٥٨

៥៨-ហើយនៅពេលដែលពួកអ្នកបានអំពាវនាវ(ពួកគេ)ឱ្យទៅសឡាត(អាហ្សាន) ពួកគេបានចាត់ទុកវាជាការចំអក និងលេងសើច ។ នោះគឺដោយសារតែពួកគេជាក្រុមដែលមិនពិចារណា ។

قُلۡ يَٰٓأَهۡلَ ٱلۡكِتَٰبِ هَلۡ تَنقِمُونَ مِنَّآ إِلَّآ أَنۡ
ءَامَنَّا بِٱللَّهِ وَمَآ أُنزِلَ إِلَيۡنَا وَمَآ أُنزِلَ مِن قَبۡلُ
وَأَنَّ أَكۡثَرَكُمۡ فَٰسِقُونَ ٥٩

៥៩-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ឱអះលីគីតាប! តើពួកអ្នកស្អប់ពួកយើងដោយសារតែពួកយើងមានជំនឿលើអល់ឡោះ និងអ្វីដែលគេបានបញ្ចុះមកឱ្យពួកយើង ហើយនិងអ្វីដែលគេបានបញ្ចុះពីមុនមកឬ? ហើយពិតប្រាកដណាស់ ពួកអ្នកភាគច្រើនគឺជាពួកដែលល្មើសនឹងច្បាប់អល់ឡោះ ។

قُلۡ هَلۡ أُنَبِّئُكُم بِشَرّٖ مِّن ذَٰلِكَ مَثُوبَةً عِندَ
ٱللَّهِۚ مَن لَّعَنَهُ ٱللَّهُ وَغَضِبَ عَلَيۡهِ وَجَعَلَ مِنۡهُمُ
ٱلۡقِرَدَةَ وَٱلۡخَنَازِيرَ وَعَبَدَ ٱلطَّٰغُوتَۚ أُوْلَٰٓئِكَ
شَرّٞ مَّكَانٗا وَأَضَلُّ عَن سَوَآءِ ٱلسَّبِيلِ ٦٠

៦០-ចូរអ្នកពោលថា: តើចង់ឱ្យខ្ញុំប្រាប់ពួកអ្នក(អ្នកមានជំនឿ) អំពីអ្នកដែលត្រូវទទួលផលអាក្រក់ពីអល់ឡោះជាងពួកនោះ(ពួកពុតត្បុត)ដែរឬទេ? នោះគឺជាអ្នកដែលអល់ឡោះបានដាក់បណ្ដាសា និងខឹងសម្បាចំពោះគេ ហើយទ្រង់បានធ្វើឱ្យពួកគេមួយចំនួនក្លាយទៅជាសត្វស្វា និងសត្វជ្រូក និងក្លាយទៅជាអ្នកដែលគោរពតាមតហ្គ៊ូត ។ ពួកទាំងនោះនឹងទទួលកន្លែងអាក្រក់បំផុត(នៅថ្ងៃបរលោក) និងវង្វេងពីមាគ៌ាត្រឹមត្រូវ(នៅក្នុងលោកិយ) ។

وَإِذَا جَآءُوكُمۡ قَالُوٓاْ ءَامَنَّا وَقَد دَّخَلُواْ بِٱلۡكُفۡرِ
وَهُمۡ قَدۡ خَرَجُواْ بِهِۦۚ وَٱللَّهُ أَعۡلَمُ بِمَا كَانُواْ

៦១-ហើយនៅពេលពួកគេ(ពួកពុតត្បុតយ៉ាហ៊ូទី)បានមកជួបពួកអ្នក(អ្នកមានជំនឿ) ពួកគេបាននិយាយថា: ពួកយើងជឿ

ហើយ ។ តែការពិតពួកគេបានចូល( មកជួបពួកអ្នក) ក្នុងលក្ខណៈប្រឆាំងទេ ហើយពួកគេក៏បានចេញទៅវិញក្នុងលក្ខណៈប្រឆាំងដែរ ។ អល់ឡោះដឹងបំផុតនូវអ្វីដែលពួកគេបានលាក់កំបាំង ។

៦២-ហើយអ្នក( មូហាំម៉ាត់) នឹងឃើញពួកគេ( យ៉ាហ៊ូទី) ភាគច្រើនរហ័សក្នុងការធ្វើបាបកម្មនិងបំពាន ហើយនិងការស៊ីរបស់ពួកគេចំពោះទ្រព្យដែលត្រូវបានហាមឃាត់ ។ អ្វីដែលពួកគេបានប្រព្រឹត្តគឺអាក្រក់បំផុត ។

៦៣-ហេតុអ្វីបានជាពួកដែលចេះដឹងជ្រៅជ្រះផ្នែកសាសនា និងពួកអ្នកដឹកនាំសាសនារបស់ពួកគេមិនហាមឃាត់ពួកគេអំពីការនិយាយកុហក និងការស៊ីរបស់ពួកគេចំពោះទ្រព្យដែលត្រូវបានហាមឃាត់? វាអាក្រក់បំផុតនូវអ្វីដែលពួកគេបានធ្វើនោះ ។

៦៤-ពួកយ៉ាហ៊ូទីបាននិយាយថាៈ ដៃរបស់អល់ឡោះគឺក្ដាប់ជិត ( កំណាញ់) ។ ដៃរបស់ពួកគេទេដែលក្ដាប់ជិតនោះ ហើយពួកគេត្រូវបានគេដាក់បណ្ដាសាដោយសារតែអ្វីដែលពួកគេបាននិយាយ ។ ផ្ទុយទៅវិញដៃទាំងពីររបស់អល់ឡោះបើកទូលាយជានិច្ច ទ្រង់ប្រទានតាមតែទ្រង់មានចេតនា ។ ហើយអ្វីដែលគេបានបញ្ចុះមកឱ្យអ្នក ( មូហាំម៉ាត់) ពីម្ចាស់របស់អ្នកនោះ វារឹតតែធ្វើឱ្យពួកគេភាគច្រើនមានការបំពាន និងប្រឆាំងថែមទៀត ។ ហើយយើងបានបញ្ចូលភាពជាសត្រូវនិងការស្អប់ខ្ពើមគ្នារវាងពួកគេរហូតដល់ថ្ងៃបរលោក ។ រាល់ពេលដែលពួកគេបានដុតភ្លើងសង្គ្រាមឡើងអល់ឡោះបានពន្លត់វាចោលវិញ ។ ហើយពួកគេបង្កវិនាសកម្មនៅលើផែនដី ។ អល់ឡោះមិនស្រឡាញ់ពួកដែលបង្កវិនាសកម្មឡើយ ។

៦៥-ហើយប្រសិនបើពួកអះលីគីតាបមានជំនឿ និងកោតខ្លាចអល់ឡោះវិញនោះ យើងប្រាកដជានឹងលុបបំបាត់ទោសកំហុសទាំងឡាយរបស់ពួកគេចេញពីពួកគេ ហើយយើងនឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌ណាអ៊ីម ។

៦៦-ហើយប្រសិនបើពួកគេប្រតិបត្តិតាមគម្ពីរតាវរ៉ត និងគម្ពីរអ៊ីញជីល និងអ្វីៗដែលគេបានបញ្ចុះឱ្យពួកគេពីម្ចាស់របស់ពួកគេ ពួក

يَكْتُمُونَ ﴿٦١﴾

وَتَرَىٰ كَثِيرًا مِّنْهُمْ يُسَٰرِعُونَ فِى ٱلْإِثْمِ
وَٱلْعُدْوَٰنِ وَأَكْلِهِمُ ٱلسُّحْتَ ۚ لَبِئْسَ مَا
كَانُوا۟ يَعْمَلُونَ ﴿٦٢﴾

لَوْلَا يَنْهَىٰهُمُ ٱلرَّبَّٰنِيُّونَ وَٱلْأَحْبَارُ عَن
قَوْلِهِمُ ٱلْإِثْمَ وَأَكْلِهِمُ ٱلسُّحْتَ ۚ لَبِئْسَ مَا
كَانُوا۟ يَصْنَعُونَ ﴿٦٣﴾

وَقَالَتِ ٱلْيَهُودُ يَدُ ٱللَّهِ مَغْلُولَةٌ ۚ غُلَّتْ أَيْدِيهِمْ
وَلُعِنُوا۟ بِمَا قَالُوا۟ ۘ بَلْ يَدَاهُ مَبْسُوطَتَانِ يُنفِقُ
كَيْفَ يَشَآءُ ۚ وَلَيَزِيدَنَّ كَثِيرًا مِّنْهُم مَّآ أُنزِلَ
إِلَيْكَ مِن رَّبِّكَ طُغْيَٰنًا وَكُفْرًا ۚ وَأَلْقَيْنَا بَيْنَهُمُ
ٱلْعَدَٰوَةَ وَٱلْبَغْضَآءَ إِلَىٰ يَوْمِ ٱلْقِيَٰمَةِ ۚ كُلَّمَآ
أَوْقَدُوا۟ نَارًا لِّلْحَرْبِ أَطْفَأَهَا ٱللَّهُ ۚ وَيَسْعَوْنَ
فِى ٱلْأَرْضِ فَسَادًا ۚ وَٱللَّهُ لَا يُحِبُّ
ٱلْمُفْسِدِينَ ﴿٦٤﴾

وَلَوْ أَنَّ أَهْلَ ٱلْكِتَٰبِ ءَامَنُوا۟ وَٱتَّقَوْا۟
لَكَفَّرْنَا عَنْهُمْ سَيِّـَٔاتِهِمْ وَلَأَدْخَلْنَٰهُمْ جَنَّٰتِ
ٱلنَّعِيمِ ﴿٦٥﴾

وَلَوْ أَنَّهُمْ أَقَامُوا۟ ٱلتَّوْرَىٰةَ وَٱلْإِنجِيلَ وَمَآ أُنزِلَ
إِلَيْهِم مِّن رَّبِّهِمْ لَأَكَلُوا۟ مِن فَوْقِهِمْ وَمِن

تَحْتِ أَرْجُلِهِم ۚ مِّنْهُمْ أُمَّةٌ مُّقْتَصِدَةٌ ۖ وَكَثِيرٌ مِّنْهُمْ سَآءَ مَا يَعْمَلُونَ ﴿٦٦﴾

គេពិតជានឹងទទួលបាននូវលាភសក្ការៈពីលើពួកគេ(ពីលើមេឃ) និងខាងក្រោមជើងរបស់ពួកគេ(ពីផែនដី)ជាមិនខាន។ ក្នុងចំណោមពួកគេមានក្រុមមួយដែលប្រកាន់ជំហរកណ្តាល(លើការពិត)។ តែអ្វីដែលពួកគេភាគច្រើនប្រព្រឹត្តនោះគឺអាក្រក់បំផុត។

۞ يَـٰٓأَيُّهَا ٱلرَّسُولُ بَلِّغْ مَآ أُنزِلَ إِلَيْكَ مِن رَّبِّكَ ۖ وَإِن لَّمْ تَفْعَلْ فَمَا بَلَّغْتَ رِسَالَتَهُۥ ۚ وَٱللَّهُ يَعْصِمُكَ مِنَ ٱلنَّاسِ ۗ إِنَّ ٱللَّهَ لَا يَهْدِى ٱلْقَوْمَ ٱلْكَـٰفِرِينَ ﴿٦٧﴾

៦៧-ឱអ្នកនាំសារ(មូហាំម៉ាត់)! ចូរអ្នកផ្តល់នូវអ្វីដែលគេបានបញ្ចុះឱ្យអ្នកពីម្ចាស់របស់អ្នក។ តែប្រសិនបើអ្នកមិនធ្វើទេនោះគឺអ្នកមិនបានផ្តល់សាររបស់ទ្រង់ឡើយ។ ហើយអល់ឡោះនឹងរក្សាអ្នកពី(ទង្វើអាក្រក់)មនុស្សលោក។ ពិតប្រាកដណាស់ អល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលប្រឆាំងឡើយ។

قُلْ يَـٰٓأَهْلَ ٱلْكِتَـٰبِ لَسْتُمْ عَلَىٰ شَىْءٍ حَتَّىٰ تُقِيمُوا۟ ٱلتَّوْرَىٰةَ وَٱلْإِنجِيلَ وَمَآ أُنزِلَ إِلَيْكُم مِّن رَّبِّكُمْ ۗ وَلَيَزِيدَنَّ كَثِيرًا مِّنْهُم مَّآ أُنزِلَ إِلَيْكَ مِن رَّبِّكَ طُغْيَـٰنًا وَكُفْرًا ۖ فَلَا تَأْسَ عَلَى ٱلْقَوْمِ ٱلْكَـٰفِرِينَ ﴿٦٨﴾

៦៨-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ឱអះលីគីតាប! ពួកអ្នកមិនស្ថិតនៅលើ(សាសនា)អ្វីឡើយ លុះត្រាតែពួកអ្នកប្រតិបត្តិតាមគម្ពីរតាវ៉រ៉ត និងគម្ពីរអ៊ីញជីល ហើយនិងអ្វីដែលត្រូវបានគេបញ្ចុះមកឱ្យពួកអ្នកពីម្ចាស់របស់ពួកអ្នក។ ហើយអ្វីដែលត្រូវបានបញ្ចុះមកឱ្យអ្នកពីម្ចាស់របស់អ្នកនោះ វារឹតតែធ្វើឱ្យពួកគេភាគច្រើនមានការបំពាន និងប្រឆាំងថែមទៀត។ ដូច្នេះ ចូរអ្នកកុំព្រួយបារម្ភចំពោះក្រុមដែលប្រឆាំងនោះឱ្យសោះ ។

إِنَّ ٱلَّذِينَ ءَامَنُوا۟ وَٱلَّذِينَ هَادُوا۟ وَٱلصَّـٰبِـُٔونَ وَٱلنَّصَـٰرَىٰ مَنْ ءَامَنَ بِٱللَّهِ وَٱلْيَوْمِ ٱلْـَٔاخِرِ وَعَمِلَ صَـٰلِحًا فَلَا خَوْفٌ عَلَيْهِمْ وَلَا هُمْ يَحْزَنُونَ ﴿٦٩﴾

៦៩-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿ និងពួកយ៉ាហ៊ូទី ហើយនិងពួកសពីអ៊ីន ព្រមទាំងពួកណាសរ៉នី បើបុគ្គលណាមានជំនឿលើអល់ឡោះ និងថ្ងៃបរលោក ព្រមទាំងបានសាងអំពើល្អនោះ ពួកគេគ្មានការភ័យខ្លាច និងមិនព្រួយបារម្ភឡើយ។

لَقَدْ أَخَذْنَا مِيثَـٰقَ بَنِىٓ إِسْرَٰٓءِيلَ وَأَرْسَلْنَآ إِلَيْهِمْ رُسُلًا ۖ كُلَّمَا جَآءَهُمْ رَسُولٌۢ بِمَا لَا تَهْوَىٰٓ أَنفُسُهُمْ فَرِيقًا كَذَّبُوا۟ وَفَرِيقًا يَقْتُلُونَ ﴿٧٠﴾

៧០-ពិតប្រាកដណាស់ យើងបានទទួលយកកិច្ចសន្យារបស់អំបូរអ៊ីស្រាអែល ហើយយើងបានបញ្ជូនអ្នកនាំសារជាច្រើនទៅកាន់ពួកគេ។ រាល់ពេលដែលអ្នកនាំសារបានមកដល់ពួកគេដោយនាំអ្វីដែលមិនត្រូវចិត្តពួកគេ គឺពួកគេបានប្រឆាំងនឹងគាត់។ ពួកគេបានបដិសេធនឹងអ្នកនាំសារមួយចំនួននិងមួយចំនួនទៀតពួកគេសម្លាប់។

وَحَسِبُوٓا۟ أَلَّا تَكُونَ فِتْنَةٌ فَعَمُوا۟ وَصَمُّوا۟

៧១-ហើយពួកគេនឹកស្មានថា(អំពើល្មើសរបស់ពួកគេ)គឺគ្មានទោសពៃរ៍ឡើយ ទើបពួកគេធ្វើជាខ្វាក់ និងធ្វើជាថ្លង់(មិនចង់ឃើញ

ثُمَّ تَابَ ٱللَّهُ عَلَيۡهِمۡ ثُمَّ عَمُواْ وَصَمُّواْ
كَثِيرٞ مِّنۡهُمۡۚ وَٱللَّهُ بَصِيرُۢ بِمَا يَعۡمَلُونَ ٧١

មិនចង់ឮការពិត) ។ បន្ទាប់មកអល់ឡោះបានអភ័យទោសឱ្យពួកគេ ។ ក្រោយមកពួកគេភាគច្រើននៅតែធ្វើជាខ្វាក់ និងធ្វើជាថ្លង់ដដែល ។ អល់ឡោះឃើញបំផុតនូវអ្វីដែលពួកគេប្រព្រឹត្ត ។

لَقَدۡ كَفَرَ ٱلَّذِينَ قَالُوٓاْ إِنَّ ٱللَّهَ هُوَ
ٱلۡمَسِيحُ ٱبۡنُ مَرۡيَمَۖ وَقَالَ ٱلۡمَسِيحُ يَٰبَنِيٓ
إِسۡرَٰٓءِيلَ ٱعۡبُدُواْ ٱللَّهَ رَبِّي وَرَبَّكُمۡۖ إِنَّهُۥ
مَن يُشۡرِكۡ بِٱللَّهِ فَقَدۡ حَرَّمَ ٱللَّهُ عَلَيۡهِ ٱلۡجَنَّةَ
وَمَأۡوَىٰهُ ٱلنَّارُۖ وَمَا لِلظَّٰلِمِينَ مِنۡ
أَنصَارٖ ٧٢

៧២-ពួកដែលបាននិយាយថា: ជាការពិតណាស់ អល់ឡោះគឺម៉ាសៀហ(អ៊ីសា) កូនរបស់ម៉ារយ៉ាំនោះ ពិតជាក្លាយជាពួកដែលគ្មានជំនឿ ។ ហើយម៉ាសៀហបានពោលថា: ឱអំបូរអ៊ីស្រាអែល! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់របស់ខ្ញុំ និងជាម្ចាស់របស់ពួកអ្នក ។ ពិតប្រាកដណាស់ អ្នកណាធ្វើស្ហ៊ីរិកនឹងអល់ឡោះ អល់ឡោះពិតជាបានហាមឃាត់គេអំពីឋានសួគ៌ ហើយកន្លែងស្នាក់នៅរបស់គេគឺឋាននរក ។ ហើយចំពោះពួកដែលបំពានគឺពុំមានអ្នកជួយឡើយ ។

لَّقَدۡ كَفَرَ ٱلَّذِينَ قَالُوٓاْ إِنَّ ٱللَّهَ ثَالِثُ
ثَلَٰثَةٖۘ وَمَا مِنۡ إِلَٰهٍ إِلَّآ إِلَٰهٞ وَٰحِدٞۚ وَإِن لَّمۡ
يَنتَهُواْ عَمَّا يَقُولُونَ لَيَمَسَّنَّ ٱلَّذِينَ
كَفَرُواْ مِنۡهُمۡ عَذَابٌ أَلِيمٌ ٧٣

៧៣-ជាការពិតណាស់ ពួកអ្នកដែលបាននិយាយថា: ពិតប្រាកដណាស់ អល់ឡោះគឺជាម្ចាស់ទីបីក្នុងចំណោមម្ចាស់ទាំងបីនោះ ពិតជាបានក្លាយជាពួកដែលគ្មានជំនឿ ។ ហើយគ្មានម្ចាស់ណាផ្សេងដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដឡើយ គឺមានតែម្ចាស់(អល់ឡោះ)តែមួយគត់ ។ ហើយប្រសិនបើពួកគេមិនព្រមបញ្ឈប់នូវអ្វីដែលពួកគេនិយាយទេនោះ ទារុណកម្មដ៏សែនឈឺចាប់ពិតជានឹងធ្លាក់ទៅលើពួកដែលប្រឆាំងក្នុងចំណោមពួកគេជាមិនខាន ។

أَفَلَا يَتُوبُونَ إِلَى ٱللَّهِ وَيَسۡتَغۡفِرُونَهُۥۚ
وَٱللَّهُ غَفُورٞ رَّحِيمٞ ٧٤

៧៤-តើពួកគេនៅតែមិនព្រមសារភាពកំហុសចំពោះអល់ឡោះ និងមិនសុំអភ័យទោសអំពីទ្រង់ទៀតឬ? អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

مَّا ٱلۡمَسِيحُ ٱبۡنُ مَرۡيَمَ إِلَّا رَسُولٞ قَدۡ
خَلَتۡ مِن قَبۡلِهِ ٱلرُّسُلُ وَأُمُّهُۥ صِدِّيقَةٞۖ
كَانَا يَأۡكُلَانِ ٱلطَّعَامَۗ ٱنظُرۡ كَيۡفَ
نُبَيِّنُ لَهُمُ ٱلۡأٓيَٰتِ ثُمَّ ٱنظُرۡ أَنَّىٰ
يُؤۡفَكُونَ ٧٥

៧៥-ម៉ាសៀហកូនរបស់ម៉ារយ៉ាំគ្រាន់តែជាអ្នកនាំសារម្នាក់ដូចបណ្ដាអ្នកនាំសារមុនៗគាត់ដែរ ហើយម្ដាយរបស់គាត់ជាស្ត្រីត្រឹមត្រូវបំផុត ។ អ្នកទាំងពីរត្រូវការទទួលទានចំណីអាហារ ។ ចូរអ្នក(មូហាំម៉ាត់)ពិចារណាមើលចុះ តើយើងបង្ហាញភស្តុតាងជាច្រើនដល់ពួកគេ(ពួកប្រឆាំង)យ៉ាងដូចម្ដេច? បន្ទាប់មកចូរអ្នកពិចារណាមើលទៀតចុះ តើពួកគេងាកចេញ(ពីការពិត)យ៉ាងដូចម្ដេច?

قُلۡ أَتَعۡبُدُونَ مِن دُونِ ٱللَّهِ مَا لَا يَمۡلِكُ لَكُمۡ ضَرّٗا وَلَا نَفۡعٗاۚ وَٱللَّهُ هُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ٧٦

៧៦-ចូរអ្នកពោលថា: តើពួកអ្នកគោរពសក្ការៈផ្សេងពីអល់ឡោះនូវអ្វីដែលមិនអាចផ្តល់គ្រោះថ្នាក់ និងមិនអាចផ្តល់ផលប្រយោជន៍ដល់ពួកអ្នកនោះឬ? ហើយអល់ឡោះ ទ្រង់មហាឮមហាដឹង ។

قُلۡ يَٰٓأَهۡلَ ٱلۡكِتَٰبِ لَا تَغۡلُواْ فِي دِينِكُمۡ غَيۡرَ ٱلۡحَقِّ وَلَا تَتَّبِعُوٓاْ أَهۡوَآءَ قَوۡمٖ قَدۡ ضَلُّواْ مِن قَبۡلُ وَأَضَلُّواْ كَثِيرٗا وَضَلُّواْ عَن سَوَآءِ ٱلسَّبِيلِ ٧٧

៧៧-ចូរអ្នកពោលថា: ឱអះលីគីតាប! ពួកអ្នកកុំជ្រុលនិយមនៅក្នុងសាសនារបស់ពួកអ្នកក្រៅពីការពិតឱ្យសោះ ។ ហើយពួកអ្នកមិនត្រូវដើរតាមទំនើងចិត្តរបស់ក្រុមណាមួយដែលពួកគេពិតជាបានវង្វេងពីមុនមកនោះឡើយ ។ ហើយពួកគេបានធ្វើឱ្យមនុស្សជាច្រើនវង្វេង ហើយពួកគេទាំងអស់ក៏បានវង្វេងចេញពីមាគ៌ាត្រឹមត្រូវដែរ ។

لُعِنَ ٱلَّذِينَ كَفَرُواْ مِنۢ بَنِيٓ إِسۡرَٰٓءِيلَ عَلَىٰ لِسَانِ دَاوُۥدَ وَعِيسَى ٱبۡنِ مَرۡيَمَۚ ذَٰلِكَ بِمَا عَصَواْ وَّكَانُواْ يَعۡتَدُونَ ٧٨

៧៨-គេបានដាក់បណ្តាសាចំពោះពួកដែលប្រឆាំងក្នុងចំណោមអំបូរអ៊ីស្រាអែលតាមរយៈគម្ពីរ(ហ្សាហ្គួរ)របស់ដាវូដនិងអ៊ីសាកូនរបស់ម៉ារយ៉ាំ(តាមរយៈគម្ពីរអ៊ីញជីល) ។ នោះគឺដោយសារតែអ្វីដែលពួកគេបានប្រឆាំងនិងបានបំពាន ។

كَانُواْ لَا يَتَنَاهَوۡنَ عَن مُّنكَرٖ فَعَلُوهُۚ لَبِئۡسَ مَا كَانُواْ يَفۡعَلُونَ ٧٩

៧៩-ពួកគេមិនធ្លាប់បានហាមឃាត់គ្នាអំពីប្រការអាក្រក់ដែលពួកគេបានប្រព្រឹត្តវានោះឡើយ ។ អ្វីដែលពួកគេបានប្រព្រឹត្តនោះពិតជាអាក្រក់បំផុត ។

تَرَىٰ كَثِيرٗا مِّنۡهُمۡ يَتَوَلَّوۡنَ ٱلَّذِينَ كَفَرُواْۚ لَبِئۡسَ مَا قَدَّمَتۡ لَهُمۡ أَنفُسُهُمۡ أَن سَخِطَ ٱللَّهُ عَلَيۡهِمۡ وَفِي ٱلۡعَذَابِ هُمۡ خَٰلِدُونَ ٨٠

៨០-អ្នក(មូហាំម៉ាត់)នឹងឃើញពួកគេ(យ៉ាហ៊ូទី)ភាគច្រើនយកពួកគ្មានជំនឿធ្វើជាអ្នកដឹកនាំ ។ អ្វីដែលពួកគេបានធ្វើសម្រាប់ខ្លួនរបស់ពួកគេពិតជាអាក្រក់បំផុត ជាហេតុធ្វើឱ្យអល់ឡោះខឹងសម្បាចំពោះពួកគេ ហើយពួកគេស្ថិតនៅក្នុងទារុណកម្មជាអមតៈ ។

وَلَوۡ كَانُواْ يُؤۡمِنُونَ بِٱللَّهِ وَٱلنَّبِيِّ وَمَآ أُنزِلَ إِلَيۡهِ مَا ٱتَّخَذُوهُمۡ أَوۡلِيَآءَ وَلَٰكِنَّ كَثِيرٗا مِّنۡهُمۡ فَٰسِقُونَ ٨١

៨១-ហើយប្រសិនបើពួកគេ(យ៉ាហ៊ូទី)មានជំនឿលើអល់ឡោះនិងណាពី និងអ្វីដែលគេបានបញ្ចុះមកឱ្យគាត់ច្បាស់ជាពួកគេមិនយកពួកនោះ(អ្នកគ្មានជំនឿ)ធ្វើជាអ្នកដឹកនាំឡើយ ក៏ប៉ុន្តែពួកគេភាគច្រើនជាពួកដែលល្មើសនឹងច្បាប់អល់ឡោះ ។

۞ لَتَجِدَنَّ أَشَدَّ ٱلنَّاسِ عَدَٰوَةٗ لِّلَّذِينَ ءَامَنُواْ

៨២-អ្នក(មូហាំម៉ាត់)ពិតជានឹងជួបប្រទះមនុស្សដែលជាសត្រូវធំបំផុតរបស់បណ្តាអ្នកដែលមានជំនឿនោះ គឺពួកយ៉ាហ៊ូទី

ٱلۡيَهُودَ وَٱلَّذِينَ أَشۡرَكُواْۖ وَلَتَجِدَنَّ
أَقۡرَبَهُم مَّوَدَّةٗ لِّلَّذِينَ ءَامَنُواْ ٱلَّذِينَ قَالُوٓاْ
إِنَّا نَصَٰرَىٰۚ ذَٰلِكَ بِأَنَّ مِنۡهُمۡ قِسِّيسِينَ
وَرُهۡبَانٗا وَأَنَّهُمۡ لَا يَسۡتَكۡبِرُونَ ٨٢

និងពួកដែលធ្វើស្ហ៊ីរិក។ ហើយអ្នកក៏ពិតជានឹងជួបប្រទះផងដែរនូវមនុស្សជំនិតរបស់ពួកគេមានចិត្តស្រឡាញ់ចំពោះអ្នកមានជំនឿដែលពួកគេបាននិយាយថាៈ ពិតប្រាកដណាស់ ពួកយើងជាណាស-រ៉នី។ នោះគឺដោយសារតែពួកគេមួយចំនួនជាអ្នកចេះដឹងជ្រៅជ្រះផ្នែកសាសនា និងជាអ្នកគោរពសក្ការៈ(ទៅចំពោះអល់ឡោះ) ហើយពិតប្រាកដណាស់ ពួកគេមិនក្រអឺតក្រទមឡើយ។

وَإِذَا سَمِعُواْ مَآ أُنزِلَ إِلَى ٱلرَّسُولِ تَرَىٰٓ
أَعۡيُنَهُمۡ تَفِيضُ مِنَ ٱلدَّمۡعِ مِمَّا عَرَفُواْ مِنَ
ٱلۡحَقِّۖ يَقُولُونَ رَبَّنَآ ءَامَنَّا فَٱكۡتُبۡنَا مَعَ
ٱلشَّٰهِدِينَ ٨٣

៨៣-ហើយនៅពេលដែលពួកគេ(ណាសរ៉នី) បានឮនូវអ្វីដែលគេបានបញ្ចុះទៅឱ្យអ្នកនាំសារ(មូហាំម៉ាត់) អ្នកនឹងឃើញភ្នែករបស់ពួកគេហូរទឹកភ្នែកដោយសារតែអ្វីដែលពួកគេបានដឹងនូវការពិត។ ពួកគេនិយាយថាៈ ឱម្ចាស់របស់ពួកយើង! ពួកយើងមានជំនឿហើយ ដូច្នេះសូមទ្រង់មេត្តាកត់បញ្ចូលពួកយើងជាមួយនឹងបណ្ដាអ្នកដែលធ្វើសាក្សីផង(ជឿលើអល់ឡោះ និងអ្នកនាំសារ)។

وَمَا لَنَا لَا نُؤۡمِنُ بِٱللَّهِ وَمَا جَآءَنَا مِنَ
ٱلۡحَقِّ وَنَطۡمَعُ أَن يُدۡخِلَنَا رَبُّنَا مَعَ ٱلۡقَوۡمِ
ٱلصَّٰلِحِينَ ٨٤

៨៤-ហើយតើមានអ្វីដែលធ្វើឱ្យពួកយើងគ្មានជំនឿលើអល់ឡោះ និងអ្វីដែលបានមកដល់ពួកយើងអំពីការពិតនោះ? ហើយពួកយើងសង្ឃឹមថា ម្ចាស់របស់ពួកយើងនឹងបញ្ចូលពួកយើងជាមួយក្រុមដែលសាងអំពើល្អត្រឹមត្រូវ(ទៅក្នុងឋានសួគ៌)។

فَأَثَٰبَهُمُ ٱللَّهُ بِمَا قَالُواْ جَنَّٰتٖ تَجۡرِي مِن
تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَاۚ وَذَٰلِكَ جَزَآءُ
ٱلۡمُحۡسِنِينَ ٨٥

៨៥-ហើយដោយសារតែអ្វីដែលពួកគេបាននិយាយនោះ អល់ឡោះបានតបស្នងដល់ពួកគេនូវឋានសួគ៌ជាច្រើនដែលមានទន្លេហូរពីក្រោមវា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។ ទាំងនោះហើយជាការតបស្នងចំពោះបណ្ដាអ្នកដែលធ្វើល្អ។

وَٱلَّذِينَ كَفَرُواْ وَكَذَّبُواْ بِـَٔايَٰتِنَآ أُوْلَٰٓئِكَ
أَصۡحَٰبُ ٱلۡجَحِيمِ ٨٦

៨៦-ចំណែកឯពួកដែលគ្មានជំនឿ និងបានបដិសេធនឹងអាយ៉ាត់ៗរបស់យើងនោះ ពួកទាំងនោះជាពួកឋាននរកជើហ៊ីម។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تُحَرِّمُواْ طَيِّبَٰتِ مَآ
أَحَلَّ ٱللَّهُ لَكُمۡ وَلَا تَعۡتَدُوٓاْۚ إِنَّ ٱللَّهَ لَا
يُحِبُّ ٱلۡمُعۡتَدِينَ ٨٧

៨៧-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំដាក់បម្រាមនូវប្រការល្អ(ហាឡាល់)ដែលអល់ឡោះបានអនុញ្ញាតឱ្យពួកអ្នក ហើយចូរពួកអ្នកកុំបំពានឱ្យសោះ។ ពិតប្រាកដណាស់ អល់ឡោះមិនស្រឡាញ់ពួកដែលបំពានឡើយ។

وَكُلُواْ مِمَّا رَزَقَكُمُ ٱللَّهُ حَلَٰلٗا طَيِّبٗاۚ وَٱتَّقُواْ

៨៨-ហើយចូរពួកអ្នកទទួលទានអំពីអ្វីដែលអល់ឡោះបាន

ٱللَّهَ ٱلَّذِىٓ أَنتُم بِهِۦ مُؤْمِنُونَ ﴿٨٨﴾

ប្រទានលាភសក្ការៈដល់ពួកអ្នកដែលជាចំណីអាហារហាឡាល់ ហើយល្អ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ ដែលពួកអ្នកជាអ្នកមានជំនឿចំពោះទ្រង់។

لَا يُؤَاخِذُكُمُ ٱللَّهُ بِٱللَّغْوِ فِىٓ أَيْمَـٰنِكُمْ وَلَـٰكِن
يُؤَاخِذُكُم بِمَا عَقَّدتُّمُ ٱلْأَيْمَـٰنَ ۖ
فَكَفَّـٰرَتُهُۥٓ إِطْعَامُ عَشَرَةِ مَسَـٰكِينَ مِنْ أَوْسَطِ
مَا تُطْعِمُونَ أَهْلِيكُمْ أَوْ كِسْوَتُهُمْ أَوْ تَحْرِيرُ
رَقَبَةٍ ۖ فَمَن لَّمْ يَجِدْ فَصِيَامُ ثَلَـٰثَةِ أَيَّامٍ ۚ ذَٰلِكَ
كَفَّـٰرَةُ أَيْمَـٰنِكُمْ إِذَا حَلَفْتُمْ ۚ وَٱحْفَظُوٓا۟
أَيْمَـٰنَكُمْ ۚ كَذَٰلِكَ يُبَيِّنُ ٱللَّهُ لَكُمْ ءَايَـٰتِهِۦ
لَعَلَّكُمْ تَشْكُرُونَ ﴿٨٩﴾

៨៩-អល់ឡោះនឹងមិនយកទោសពៃរ៍ពួកអ្នកចំពោះការស្បថរបស់ពួកអ្នកដោយអចេតនាឡើយ។ ក៏ប៉ុន្តែទ្រង់នឹងយកទោសពៃរ៍ពួកអ្នកចំពោះអ្វីដែលពួកអ្នកបានស្បថដោយចេតនា។ ( ប្រសិនបើពួកអ្នកមិនធ្វើតាមសម្បថដោយចេតនានោះ ) ការពិន័យរបស់វាគឺផ្តល់ចំណីអាហារដល់អ្នកក្រីក្រដប់នាក់(ចំណីមួយថ្ងៃ) អំពីចំណីមធ្យមដែលពួកអ្នកធ្លាប់ផ្តល់ឱ្យក្រុមគ្រួសាររបស់ពួកអ្នក ឬផ្តល់សំលៀកបំពាក់ដល់ពួកគេឬក៏ដោះលែងទាសីម្នាក់ឱ្យមានសេរីភាព។ តែបើអ្នកណាគ្មានលទ្ធភាពទេនោះ ចូរឱ្យគេបួសចំនួនបីថ្ងៃ។ នោះហើយគឺជាការពិន័យនៃការស្បថរបស់ពួកអ្នកនៅពេលដែលពួកអ្នកបានស្បថ។ ហើយចូរពួកអ្នកការពារសម្បថរបស់ពួកអ្នក( មិនត្រូវស្បថផ្តេសផ្តាស )។ ទាំងនោះហើយដែលអល់ឡោះបញ្ជាក់ប្រាប់ពួកអ្នកនូវភស្តុតាងជាច្រើនរបស់ទ្រង់ដើម្បីឱ្យពួកអ្នកដឹងគុណ។

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓا۟ إِنَّمَا ٱلْخَمْرُ وَٱلْمَيْسِرُ
وَٱلْأَنصَابُ وَٱلْأَزْلَـٰمُ رِجْسٌ مِّنْ عَمَلِ
ٱلشَّيْطَـٰنِ فَٱجْتَنِبُوهُ لَعَلَّكُمْ تُفْلِحُونَ ﴿٩٠﴾

៩០-ឱបណ្តាអ្នកមានជំនឿ! ពិតប្រាកដណាស់សុរា ល្បែងស៊ីសង គោរពបូជារូបបដិមា និងជឿព្រួញទស្សន៍ទាយវាសនា គឺជាអំពើដ៏កខ្វក់នៃទង្វើរបស់ស្ហៃតន។ ដូច្នេះ ចូរពួកអ្នកចៀសវាងឱ្យឆ្ងាយពីវាដើម្បីឱ្យពួកអ្នកទទួលបានជោគជ័យ។

إِنَّمَا يُرِيدُ ٱلشَّيْطَـٰنُ أَن يُوقِعَ بَيْنَكُمُ ٱلْعَدَٰوَةَ
وَٱلْبَغْضَآءَ فِى ٱلْخَمْرِ وَٱلْمَيْسِرِ وَيَصُدَّكُمْ عَن
ذِكْرِ ٱللَّهِ وَعَنِ ٱلصَّلَوٰةِ ۖ فَهَلْ أَنتُم مُّنتَهُونَ ﴿٩١﴾

៩១-ពិតប្រាកដណាស់ ស្ហៃតនចង់ធ្វើឱ្យពួកអ្នកក្លាយជាសត្រូវ និងស្អប់ខ្ពើមគ្នាតាមរយៈសុរា និងល្បែងស៊ីសង ហើយវារារាំងពួកអ្នកអំពីការរំលឹកទៅចំពោះអល់ឡោះ និងការសឡាត។ ដូច្នេះ ចូរពួកអ្នកឈប់ជាបន្ទាន់។

وَأَطِيعُوا۟ ٱللَّهَ وَأَطِيعُوا۟ ٱلرَّسُولَ وَٱحْذَرُوا۟ ۚ
فَإِن تَوَلَّيْتُمْ فَٱعْلَمُوٓا۟ أَنَّمَا عَلَىٰ رَسُولِنَا
ٱلْبَلَـٰغُ ٱلْمُبِينُ ﴿٩٢﴾

៩២-ហើយចូរពួកអ្នកប្រតិបត្តិតាមអល់ឡោះ និងប្រតិបត្តិតាមអ្នកនាំសារ ហើយចូរពួកអ្នកប្រុងប្រយ័ត្ន(អំពីការប្រព្រឹត្តបទល្មើស)។ តែប្រសិនបើពួកអ្នកបែរចេញវិញ ពួកអ្នកត្រូវដឹងថា ពិតប្រាកដណាស់ កាតព្វកិច្ចអ្នកនាំសាររបស់យើង គឺគ្រាន់តែជាអ្នកផ្តល់សារដ៏ច្បាស់លាស់ប៉ុណ្ណោះ។

លَيْسَ

៩៣-គ្មានបាបកម្មទេចំពោះបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អនូវអ្វីដែលពួកគេបានទទួលទាន( ការផឹកស្រាមុនពេលបម្រាម) កាលណាពួកគេកោតខ្លាចអល់ឡោះ និងមានជំនឿ ហើយនិងធ្វើអំពើល្អវិញ។ បន្ទាប់មក ពួកគេនៅតែកោតខ្លាចអល់ឡោះ និងមានជំនឿដដែល។ ក្រោយមកទៀតពួកគេកាន់តែកោតខ្លាចអល់ឡោះ និងធ្វើអំពើល្អថែមទៀត។ ហើយអល់ឡោះស្រឡាញ់បណ្ដាអ្នកដែលសាងល្អ។

៩៤-ឱបណ្ដាអ្នកមានជំនឿ! អល់ឡោះពិតជានឹងសាកល្បងពួកអ្នកពីគ្រប់ប្រភេទនៃការប្រមាញ់សត្វដែលពួកអ្នកអាចចាប់ដោយដៃ និងដោយព្រួញរបស់ពួកអ្នក( ក្នុងពេលអៀសរ៉ម) ដើម្បីអល់ឡោះនឹងបង្ហាញយ៉ាងច្បាស់ថា បុគ្គលណាដែលកោតខ្លាចទ្រង់ខណៈដែលគេមើលមិនឃើញទ្រង់។ ដូច្នេះអ្នកណាបានបំពានបន្ទាប់ពីនោះ គេនឹងទទួលទារុណកម្មដ៏សែនឈឺចាប់។

៩៥-ឱបណ្ដាអ្នកមានជំនឿ! ចូរពួកអ្នកកុំសម្លាប់សត្វ( ប្រម៉ាញ់) ខណៈដែលពួកអ្នកស្ថិតនៅក្នុងអៀសរ៉ម។ ហើយអ្នកណាក្នុងចំណោមពួកអ្នកបានសម្លាប់វាដោយចេតនាគឺត្រូវពិន័យ( ឱ្យសំឡេះសត្វពាហនៈ) ដូចសត្វដែលគេបានសម្លាប់នោះដែលអ្នកយុត្តិធម៌ពីរនាក់ក្នុងចំណោមពួកអ្នកកាត់សេចក្ដីក្នុងរឿងនេះដើម្បីចែកជូនដល់អ្នកក្រីក្រនៅម៉ាក្កះ ឬពិន័យជាអាហារផ្ដល់ឱ្យអ្នកក្រីក្រ ឬបួសជំនួសអាហារនោះ ដើម្បីឱ្យគេភ្លក្សលទ្ធផលនៃទង្វើអាក្រក់របស់គេ។ អល់ឡោះបានអធ្យាស្រ័យនូវអ្វីៗដែលកន្លងទៅ។ ហើយអ្នកណាដែលបានត្រឡប់ទៅប្រព្រឹត្តទៀតនោះ អល់ឡោះនឹងផ្ដន្ទាទោសចំពោះគេ។ ហើយអល់ឡោះមហាខ្លាំងពូកែ មានអានុភាពផ្ដន្ទាទោស។

៩៦-គេ( អល់ឡោះ) បានអនុញ្ញាតឱ្យពួកអ្នកនេសាទសត្វសមុទ្ររស់ និងយកសត្វសមុទ្រស្លាប់មកធ្វើជាអាហារសម្រាប់ពួកអ្នក និងសម្រាប់ពួកអ្នកដំណើរ។ ហើយគេបានហាមឃាត់ពួកអ្នកនូវការប្រមាញ់សត្វរស់នៅលើគោកដរាបណាពួកអ្នកស្ថិតក្នុងអៀសរ៉ម។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះដែលពួកអ្នកនឹង

لَيْسَ عَلَى ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ
ٱلصَّٰلِحَٰتِ جُنَاحٌ فِيمَا طَعِمُوٓاْ إِذَا مَا ٱتَّقَواْ
وَّءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ ثُمَّ ٱتَّقَواْ
وَّءَامَنُواْ ثُمَّ ٱتَّقَواْ وَّأَحْسَنُواْۚ وَٱللَّهُ يُحِبُّ
ٱلْمُحْسِنِينَ ٩٣

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَيَبْلُوَنَّكُمُ ٱللَّهُ بِشَيْءٍ مِّنَ
ٱلصَّيْدِ تَنَالُهُۥٓ أَيْدِيكُمْ وَرِمَاحُكُمْ لِيَعْلَمَ ٱللَّهُ
مَن يَخَافُهُۥ بِٱلْغَيْبِۚ فَمَنِ ٱعْتَدَىٰ بَعْدَ
ذَٰلِكَ فَلَهُۥ عَذَابٌ أَلِيمٌ ٩٤

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَقْتُلُواْ ٱلصَّيْدَ وَأَنتُمْ
حُرُمٌۚ وَمَن قَتَلَهُۥ مِنكُم مُّتَعَمِّدًا فَجَزَآءٌ مِّثْلُ
مَا قَتَلَ مِنَ ٱلنَّعَمِ يَحْكُمُ بِهِۦ ذَوَا عَدْلٍ
مِّنكُمْ هَدْيًۢا بَٰلِغَ ٱلْكَعْبَةِ أَوْ كَفَّٰرَةٌ طَعَامُ
مَسَٰكِينَ أَوْ عَدْلُ ذَٰلِكَ صِيَامًا لِّيَذُوقَ وَبَالَ
أَمْرِهِۦۗ عَفَا ٱللَّهُ عَمَّا سَلَفَۚ وَمَنْ عَادَ
فَيَنتَقِمُ ٱللَّهُ مِنْهُۚ وَٱللَّهُ عَزِيزٌ ذُو ٱنتِقَامٍ ٩٥

أُحِلَّ لَكُمْ صَيْدُ ٱلْبَحْرِ وَطَعَامُهُۥ مَتَٰعًا
لَّكُمْ وَلِلسَّيَّارَةِۖ وَحُرِّمَ عَلَيْكُمْ صَيْدُ ٱلْبَرِّ مَا
دُمْتُمْ حُرُمًاۗ وَٱتَّقُواْ ٱللَّهَ ٱلَّذِيٓ إِلَيْهِ

تُحۡشَرُونَ ﴿٩٦﴾

۞ جَعَلَ ٱللَّهُ ٱلۡكَعۡبَةَ ٱلۡبَيۡتَ ٱلۡحَرَامَ قِيَٰمٗا
لِّلنَّاسِ وَٱلشَّهۡرَ ٱلۡحَرَامَ وَٱلۡهَدۡيَ وَٱلۡقَلَٰٓئِدَۚ
ذَٰلِكَ لِتَعۡلَمُوٓاْ أَنَّ ٱللَّهَ يَعۡلَمُ مَا فِي ٱلسَّمَٰوَٰتِ
وَمَا فِي ٱلۡأَرۡضِ وَأَنَّ ٱللَّهَ بِكُلِّ شَيۡءٍ
عَلِيمٌ ﴿٩٧﴾

ٱعۡلَمُوٓاْ أَنَّ ٱللَّهَ شَدِيدُ ٱلۡعِقَابِ وَأَنَّ ٱللَّهَ
غَفُورٞ رَّحِيمٞ ﴿٩٨﴾

مَّا عَلَى ٱلرَّسُولِ إِلَّا ٱلۡبَلَٰغُۗ وَٱللَّهُ يَعۡلَمُ مَا
تُبۡدُونَ وَمَا تَكۡتُمُونَ ﴿٩٩﴾

قُل لَّا يَسۡتَوِي ٱلۡخَبِيثُ وَٱلطَّيِّبُ وَلَوۡ
أَعۡجَبَكَ كَثۡرَةُ ٱلۡخَبِيثِۚ فَٱتَّقُواْ ٱللَّهَ يَٰٓأُوْلِي
ٱلۡأَلۡبَٰبِ لَعَلَّكُمۡ تُفۡلِحُونَ ﴿١٠٠﴾

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَسۡـَٔلُواْ عَنۡ أَشۡيَآءَ
إِن تُبۡدَ لَكُمۡ تَسُؤۡكُمۡ وَإِن تَسۡـَٔلُواْ عَنۡهَا حِينَ
يُنَزَّلُ ٱلۡقُرۡءَانُ تُبۡدَ لَكُمۡ عَفَا ٱللَّهُ عَنۡهَاۗ وَٱللَّهُ
غَفُورٌ حَلِيمٞ ﴿١٠١﴾

ត្រូវគេប្រមូលផ្តុំទៅកាន់ទ្រង់វិញ។

៩៧-អល់ឡោះបានបង្កើតកាក់ហ្ពះជាពៃតុលហារ៉ម ដែលជាកន្លែងជួបជុំសម្រាប់មនុស្សលោក។ ហើយ(ទ្រង់ហាមឃាត់មិនឱ្យធ្វើសង្គ្រាម) នៅបណ្តាខែហារ៉ម និង(មិនឱ្យបំពានទៅលើ) អាល់-ហាទយ៉ា[1] និងសត្វដែលគេបានពាក់ប្រឡោក[2]។ ទាំងនោះគឺដើម្បីឱ្យពួកអ្នកដឹងថាៈ ពិតប្រាកដណាស់ អល់ឡោះដឹងនូវអ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលមាននៅលើផែនដី។ ហើយពិតប្រាកដណាស់ អល់ឡោះដឹងបំផុតនូវរាល់អ្វីៗទាំងអស់។

៩៨-ពួកអ្នកត្រូវដឹងថា ពិតប្រាកដណាស់ អល់ឡោះជាអ្នកដាក់ទណ្ឌកម្មដ៏ខ្លាំងក្លាបំផុត ហើយពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

៩៩-អ្នកនាំសារ(មូហាំម៉ាត់) គ្មានកាតព្វកិច្ចអ្វីក្រៅពីការផ្តល់សារ(ដល់មនុស្សលោក) នោះឡើយ។ ហើយអល់ឡោះដឹងនូវអ្វីៗដែលពួកអ្នកលាតត្រដាង និងអ្វីៗដែលពួកអ្នកលាក់បាំង។

១០០-ចូរអ្នកពោលថាៈ ប្រការអាក្រក់ និងប្រការល្អមិនស្មើគ្នាទេ ទោះបីជាប្រការអាក្រក់ជាច្រើនធ្វើឱ្យអ្នកចាប់អារម្មណ៍យ៉ាងណាក៏ដោយ។ ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ ឱបណ្តាបញ្ញាជន! ដើម្បីឱ្យពួកអ្នកទទួលបានជោគជ័យ។

១០១-ឱបណ្តាអ្នកមានជំនឿ! ចូរពួកអ្នកកុំសួរដេញដោលពីប្រការនោះឱ្យសោះ(អ្វីដែលគេមិនបានបង្គាប់នៅក្នុងសាសនា) ព្រោះបើសិនជាប្រការនោះត្រូវលាតត្រដាងចំពោះពួកអ្នក គឺវានឹងធ្វើឱ្យពួកអ្នកមានផលអាក្រក់ជាមិនខាន។ តែប្រសិនបើពួកអ្នកសួរអំពីប្រការនោះខណៈដែលគេបញ្ចុះគម្ពីរគួរអានវិញ ប្រការនោះនឹងត្រូវលាតត្រដាងចំពោះពួកអ្នកជាមិនខាន។ អល់ឡោះបានអធ្យាស្រ័យអំពីករណីនោះ។ ហើយអល់ឡោះមហាអភ័យទោស

១-សត្វពាហនៈដែលគេសំឡេះដើម្បីធ្វើគួរហ្ពានជូនកាក់ហ្ពះមានដូចជាៈ សត្វអូដ្ឋ សត្វគោ សត្វពពែ ចៀម ។ល។
២-សត្វដែលពាក់ប្រឡោកជាសញ្ញាណសំគាល់ថាៈ សត្វនោះសម្រាប់សំឡេះគួរហ្ពានជូនកាក់ហ្ពះ និងដើម្បីឱ្យដឹងថា គេចង់ធ្វើហាជ្ជី។

قَدْ سَأَلَهَا قَوْمٌ مِّن قَبْلِكُمْ ثُمَّ أَصْبَحُوا۟ بِهَا كَـٰفِرِينَ ﴿١٠٢﴾

مَا جَعَلَ ٱللَّهُ مِنۢ بَحِيرَةٍ وَلَا سَآئِبَةٍ وَلَا وَصِيلَةٍ وَلَا حَامٍ ۙ وَلَـٰكِنَّ ٱلَّذِينَ كَفَرُوا۟ يَفْتَرُونَ عَلَى ٱللَّهِ ٱلْكَذِبَ ۖ وَأَكْثَرُهُمْ لَا يَعْقِلُونَ ﴿١٠٣﴾

وَإِذَا قِيلَ لَهُمْ تَعَالَوْا۟ إِلَىٰ مَآ أَنزَلَ ٱللَّهُ وَإِلَى ٱلرَّسُولِ قَالُوا۟ حَسْبُنَا مَا وَجَدْنَا عَلَيْهِ ءَابَآءَنَآ ۚ أَوَلَوْ كَانَ ءَابَآؤُهُمْ لَا يَعْلَمُونَ شَيْـًٔا وَلَا يَهْتَدُونَ ﴿١٠٤﴾

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ عَلَيْكُمْ أَنفُسَكُمْ ۖ لَا يَضُرُّكُم مَّن ضَلَّ إِذَا ٱهْتَدَيْتُمْ ۚ إِلَى ٱللَّهِ مَرْجِعُكُمْ جَمِيعًا فَيُنَبِّئُكُم بِمَا كُنتُمْ تَعْمَلُونَ ﴿١٠٥﴾

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ شَهَـٰدَةُ بَيْنِكُمْ إِذَا حَضَرَ أَحَدَكُمُ ٱلْمَوْتُ حِينَ ٱلْوَصِيَّةِ ٱثْنَانِ ذَوَا

មហាអត់ធ្មត់។

១០២-ជាការពិតណាស់ មានក្រុមមួយនាសម័យមុនពួកអ្នកបានសួរដេញដោលប្រការនោះ ក្រោយមកពួកគេក៏ក្លាយជាពួកប្រឆាំងទៅវិញដោយសារតែរឿងនោះ។

១០៣-អល់ឡោះមិនបានបង្កើត(ច្បាប់ដល់ពួកដែលធ្វើស្ហ៊ីរិក) ដូចជាបាហ៊ីរ៉ោះ[១] សាអ៊ីហ្ពះ[២] វ៉ាស៊ីឡះ[៣] និងហាម[៤] ឡើយ។ ប៉ុន្តែពួកដែលគ្មានជំនឿទេដែលប្រឌិតឡើងនូវរឿងភូតកុហកចំពោះអល់ឡោះនោះ។ ហើយពួកគេភាគច្រើនមិនពិចារណាឡើយ។

១០៤-ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកនេះ (ពួកគ្មានជំនឿ) ថា: ចូរពួកអ្នកត្រឡប់មករកអ្វីដែលអល់ឡោះបានបញ្ចុះ និងមករកអ្នកនាំសារចុះ(ដើម្បីកាត់សេចក្តី)។ ពួកគេឆ្លើយថា: គ្រប់គ្រាន់ហើយសម្រាប់ពួកយើងអ្វីដែលពួកយើងបានទទួលពីដូនតារបស់ពួកយើង។ តើ(ពួកគេនិយាយដូច្នេះ) ទោះបីជាដូនតារបស់ពួកគេគ្មានការយល់ដឹងអ្វីសោះ និងមិនទទួលបានការចង្អុលបង្ហាញក៏ដោយឬ?

១០៥-ឱបណ្តាអ្នកមានជំនឿ! ពួកអ្នកត្រូវទទួលខុសត្រូវលើខ្លួនឯង។ អ្នកដែលវង្វេងមិនអាចបង្កគ្រោះថ្នាក់ដល់ពួកអ្នកនៅពេលដែលពួកអ្នកបានទទួលការចង្អុលបង្ហាញនោះឡើយ។ កន្លែងវិលត្រឡប់របស់ពួកអ្នកទាំងអស់គ្នាទៅចំពោះអល់ឡោះ ហើយទ្រង់នឹងប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកបានប្រព្រឹត្ត។

១០៦-ឱបណ្តាអ្នកមានជំនឿ! នៅពេលអ្នកណាម្នាក់ក្នុងចំណោមពួកអ្នកជិតស្លាប់ ពេលនោះគេចង់ធ្វើបណ្តាំមរតក ចូរឱ្យគេរកសាក្សីពីរនាក់ដែលមានភាពយុត្តិធម៌ក្នុងចំណោមពួកអ្នក

---

១-បាហ៊ីរ៉ោះ : គឺជាសត្វអូដ្ឋដែលគេកាត់ត្រចៀកបន្ទាប់ពីវាកើតកូនបានចំនួនប្រាំ ឬលើសពីនេះ ហើយគេលែងប៉ះពាល់វា ដោយទុកទឹកដោះរបស់វាសម្រាប់បូជាដល់តហ្គូត ។

២-សាអ៊ីហ្ពះ : គឺជាសត្វពាហនៈដែលគេទុកសម្រាប់បូជាដល់អ្នកផ្សេងពីអល់ឡោះ ដោយគេមិនធ្លាប់ប្រើប្រាស់វា។

៣-វ៉ាស៊ីឡះ : សត្វអូដ្ឋដែលកើតកូនបានសុទ្ធតែញី ដោយគេទុកសម្រាប់បូជាដល់តហ្គូត។

៤-ហាម : សត្វអូដ្ឋឈ្មោលដែលបង្កាត់បានកូនមួយចំនួន ។

عَدۡلٖ مِّنكُمۡ أَوۡ ءَاخَرَانِ مِنۡ غَيۡرِكُمۡ إِنۡ
أَنتُمۡ ضَرَبۡتُمۡ فِي ٱلۡأَرۡضِ فَأَصَٰبَتۡكُم مُّصِيبَةُ
ٱلۡمَوۡتِۚ تَحۡبِسُونَهُمَا مِنۢ بَعۡدِ ٱلصَّلَوٰةِ
فَيُقۡسِمَانِ بِٱللَّهِ إِنِ ٱرۡتَبۡتُمۡ لَا نَشۡتَرِي بِهِۦ
ثَمَنٗا وَلَوۡ كَانَ ذَا قُرۡبَىٰ وَلَا نَكۡتُمُ شَهَٰدَةَ ٱللَّهِ
إِنَّآ إِذٗا لَّمِنَ ٱلۡأٓثِمِينَ ١٠٦

(មូស្លីម) ឬពីរនាក់ផ្សេងទៀតក្រៅពីពួកអ្នក(មិនមែនមូស្លីម) ប្រសិនបើពួកអ្នកធ្វើដំណើរនៅលើផែនដី នៅពេលនោះគ្រោះមរណៈបានប៉ះទង្គិចដល់ពួកអ្នក។ ប្រសិនបើពួកអ្នកមានការមន្ទិលសង្ស័យ(ចំពោះសាក្សីពីរនាក់នោះ) ពួកអ្នកត្រូវហាមឃាត់គេទាំងពីរបន្ទាប់ពីសឡាតរួច ដើម្បីឱ្យគេទាំងពីរស្បថនឹងអល់ឡោះថា ពួកយើងមិនលក់ការស្បថនេះនឹងតម្លៃណាមួយឡើយ ទោះបីជាសាច់ញាតិក៏ដោយ ហើយពួកយើងក៏មិនលាក់បាំងការធ្វើសាក្សីរបស់អល់ឡោះដែរ។ ពិតប្រាកដណាស់ បើមិនដូច្នេះទេ ពួកយើងនឹងស្ថិតក្នុងចំណោមពួកដែលសាងបាបកម្មជាមិនខាន។

فَإِنۡ عُثِرَ عَلَىٰٓ أَنَّهُمَا ٱسۡتَحَقَّآ إِثۡمٗا فَـَٔاخَرَانِ
يَقُومَانِ مَقَامَهُمَا مِنَ ٱلَّذِينَ ٱسۡتَحَقَّ
عَلَيۡهِمُ ٱلۡأَوۡلَيَٰنِ فَيُقۡسِمَانِ بِٱللَّهِ لَشَهَٰدَتُنَآ
أَحَقُّ مِن شَهَٰدَتِهِمَا وَمَا ٱعۡتَدَيۡنَآ إِنَّآ إِذٗا
لَّمِنَ ٱلظَّٰلِمِينَ ١٠٧

១០៧-ក្រោយមកប្រសិនបើគេ(អាណាព្យាបាលអ្នកស្លាប់) រកឃើញពិតប្រាកដថាសាក្សីទាំងពីរនោះបានធ្វើបាបកម្ម(ធ្វើសាក្សីកុហក)វិញ ដូច្នេះពីរនាក់ផ្សេងទៀតក្នុងចំណោមសាច់ញាតិដែលជិតបំផុតរបស់អ្នកស្លាប់មានសិទ្ធិត្រូវជំនួសតំណែងរបស់គេទាំងពីរ(ក្នុងការធ្វើសាក្សី) ហើយគេទាំងពីរត្រូវស្បថនឹងអល់ឡោះថាៈ ពិតប្រាកដណាស់ ការធ្វើសាក្សីរបស់ពួកយើងវាត្រឹមត្រូវជាងការធ្វើសាក្សីរបស់គេទាំងពីរ ហើយពួកយើងមិនបានបំពានឡើយ បើមិនដូច្នោះទេ ពួកយើងពិតជានឹងស្ថិតក្នុងចំណោមពួកដែលបំពានជាមិនខាន។

ذَٰلِكَ أَدۡنَىٰٓ أَن يَأۡتُواْ بِٱلشَّهَٰدَةِ عَلَىٰ وَجۡهِهَآ
أَوۡ يَخَافُوٓاْ أَن تُرَدَّ أَيۡمَٰنُۢ بَعۡدَ أَيۡمَٰنِهِمۡۗ وَٱتَّقُواْ
ٱللَّهَ وَٱسۡمَعُواْۗ وَٱللَّهُ لَا يَهۡدِي ٱلۡقَوۡمَ
ٱلۡفَٰسِقِينَ ١٠٨

១០៨-ការធ្វើដូច្នោះ គឺជាការធ្វើសាក្សីដែលជិតទៅរកភាពត្រឹមត្រូវជាងគេ ឬពួកគេភ័យខ្លាច គេនឹងបដិសេធនឹងសម្បថបន្ទាប់ពីការស្បថរបស់ពួកគេ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ និងស្តាប់(ដំបូន្មានរបស់ទ្រង់)។ ហើយអល់ឡោះមិនចង្អុលបង្ហាញដល់ក្រុមដែលល្មើសនឹងច្បាប់របស់អល់ឡោះឡើយ។

۞ يَوۡمَ يَجۡمَعُ ٱللَّهُ ٱلرُّسُلَ فَيَقُولُ مَاذَآ
أُجِبۡتُمۡۖ قَالُواْ لَا عِلۡمَ لَنَآۖ إِنَّكَ أَنتَ
عَلَّٰمُ ٱلۡغُيُوبِ ١٠٩

១០៩-នៅថ្ងៃដែលអល់ឡោះប្រមូលផ្តុំអ្នកនាំសារទាំងឡាយ រួចទ្រង់សួរថាៈ តើពួកអ្នកត្រូវបានគេ(មនុស្សលោក)ឆ្លើយតប(ចំពោះការអំពាវនាវ)យ៉ាងដូចម្តេច? បណ្តាអ្នកនាំសារបានឆ្លើយថាៈ ពួកយើងមិនបានដឹងទេ។ ពិតប្រាកដណាស់ ទ្រង់តែមួយគត់មហាដឹងនូវប្រការអាថ៌កំបាំងទាំងឡាយ។

إِذْ قَالَ ٱللَّهُ يَـٰعِيسَى ٱبْنَ مَرْيَمَ ٱذْكُرْ نِعْمَتِى
عَلَيْكَ وَعَلَىٰ وَٰلِدَتِكَ إِذْ أَيَّدتُّكَ بِرُوحِ
ٱلْقُدُسِ تُكَلِّمُ ٱلنَّاسَ فِى ٱلْمَهْدِ وَكَهْلًا ۖ
وَإِذْ عَلَّمْتُكَ ٱلْكِتَـٰبَ وَٱلْحِكْمَةَ وَٱلتَّوْرَىٰةَ
وَٱلْإِنجِيلَ ۖ وَإِذْ تَخْلُقُ مِنَ ٱلطِّينِ كَهَيْـَٔةِ ٱلطَّيْرِ
بِإِذْنِى فَتَنفُخُ فِيهَا فَتَكُونُ طَيْرًۢا بِإِذْنِى ۖ وَتُبْرِئُ
ٱلْأَكْمَهَ وَٱلْأَبْرَصَ بِإِذْنِى ۖ وَإِذْ تُخْرِجُ
ٱلْمَوْتَىٰ بِإِذْنِى ۖ وَإِذْ كَفَفْتُ بَنِىٓ إِسْرَٰٓءِيلَ
عَنكَ إِذْ جِئْتَهُم بِٱلْبَيِّنَـٰتِ فَقَالَ ٱلَّذِينَ
كَفَرُوا۟ مِنْهُمْ إِنْ هَـٰذَآ إِلَّا سِحْرٌ مُّبِينٌ ﴿١١٠﴾

១១០-(ចូរចងចាំ) នៅពេលដែលអល់ឡោះបានមានបន្ទូលថាៈ ឱអ៊ីសាកូនម៉ារយ៉ាំ! ចូរអ្នកចងចាំនៀកម៉ាត់របស់យើងដែលបានប្រទានឱ្យអ្នកនិងម្តាយរបស់អ្នក ខណៈដែលយើងបានជួយពង្រឹងអ្នកតាមរយៈជីព្រីល ដោយឱ្យអ្នកចេះនិយាយទៅកាន់មនុស្សលោកតាំងពីពេលនៅក្នុងអង្រឹង(ទារក) និងពេលអ្នកមានវ័យចំណាស់។ ហើយ(ចូរចងចាំ) នៅពេលដែលយើងបានបង្រៀនអ្នកនូវការសរសេរ និងភាពឆ្លាតវៃ និងគម្ពីរតាវរ៉ត និងគម្ពីរអ៊ិញជីល។ ហើយ(ចូរចងចាំ) នៅពេលដែលអ្នកសូនដីឥដ្ឋទៅជារូបសត្វស្លាប គឺដោយការអនុញ្ញាតរបស់យើង បន្ទាប់មកអ្នកក៏ផ្លុំវា ពេលនោះវាក៏ក្លាយជាសត្វពិតប្រាកដភ្លាមដោយការអនុញ្ញាតរបស់យើង។ ហើយអ្នកអាចព្យាបាលជនពិការភ្នែកពីកំណើតនិងរោគឃ្លង់ដោយការអនុញ្ញាតរបស់យើង។ ហើយ(ចូរចងចាំ) នៅពេលដែលអ្នកប្រោសអ្នកស្លាប់ចេញពីផ្នូរដោយការអនុញ្ញាតរបស់យើង។ ហើយ(ចូរចងចាំ) នៅពេលដែលយើងបានរារាំងអំបូរអ៊ីស្រាអែលពី(ការសម្លាប់) អ្នកនៅពេលដែលអ្នកបាននាំមកឱ្យពួកគេនូវមុជីហ្សាត់ជាច្រើនយ៉ាងច្បាស់លាស់។ ពេលនោះពួកដែលគ្មានជំនឿក្នុងចំណោមពួកគេបែរជានិយាយថាៈ នេះពុំមែនអ្វីក្រៅពីមន្តអាគមឡើយ។

وَإِذْ أَوْحَيْتُ إِلَى ٱلْحَوَارِيِّـۧنَ أَنْ ءَامِنُوا۟
بِى وَبِرَسُولِى قَالُوٓا۟ ءَامَنَّا وَٱشْهَدْ بِأَنَّنَا
مُسْلِمُونَ ﴿١١١﴾

១១១-ហើយ(ចូរចងចាំ) នៅពេលដែលយើងបានជំរុញចិត្តដល់ពួកហាវ៉ារីយូន(អ្នកតាមអ៊ីសា) ថាៈ ចូរពួកអ្នកមានជំនឿលើយើង និងអ្នកនាំសាររបស់យើងចុះ។ ពួកគេបានឆ្លើយថាៈ ពួកយើងមានជំនឿហើយ ដូច្នេះសូមទ្រង់មេត្តាធ្វើសាក្សីថា ពួកយើងពិតជាអ្នកដែលប្រគល់ខ្លួនចំពោះទ្រង់។

إِذْ قَالَ ٱلْحَوَارِيُّونَ يَـٰعِيسَى ٱبْنَ مَرْيَمَ
هَلْ يَسْتَطِيعُ رَبُّكَ أَن يُنَزِّلَ عَلَيْنَا مَآئِدَةً
مِّنَ ٱلسَّمَآءِ ۖ قَالَ ٱتَّقُوا۟ ٱللَّهَ إِن كُنتُم
مُّؤْمِنِينَ ﴿١١٢﴾

១១២-(ចូរចងចាំ) នៅពេលដែលពួកហាវ៉ារីយូនបាននិយាយថាៈ ឱអ៊ីសាកូនម៉ារយ៉ាំ! តើម្ចាស់របស់អ្នកអាចបញ្ចុះមកឱ្យពួកយើងនូវតុអាហារមួយពីលើមេឃបានដែរឬទេ? អ៊ីសាបានឆ្លើយថាៈ ចូរពួកអ្នកកោតខ្លាចអល់ឡោះ ប្រសិនបើពួកអ្នកជាអ្នកមានជំនឿមែននោះ។

قَالُوا۟ نُرِيدُ أَن نَّأْكُلَ مِنْهَا وَتَطْمَئِنَّ قُلُوبُنَا

១១៣-ពួកគេបាននិយាយថាៈ ពួកយើងចង់ទទួលទានវា ព្រម

ទាំងចង់ឱ្យចិត្តរបស់ពួកយើងស្ងប់ និងដើម្បីពួកយើងដឹងថា អ្នកពិតជាបាននិយាយប្រាប់ពួកយើងនូវការពិត ហើយពួកយើងនឹងស្ថិតក្នុងចំណោមអ្នកដែលធ្វើសាក្សីនៅក្នុងរឿងនេះ។

១១៤-អ៊ីសាកូនម៉ារយ៉ាំបានបួងសួងថា: ឱអល់ឡោះជាម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាបញ្ចុះតុអាហារមួយពីលើមេឃមកឱ្យពួកយើងផង ដើម្បីធ្វើជាថ្ងៃបុណ្យរបស់ពួកយើងសម្រាប់អ្នកជំនាន់ពួកយើង និងអ្នកជំនាន់ក្រោយ ហើយនិងជាភស្តុតាងមួយអំពីទ្រង់។ ហើយសូមទ្រង់មេត្តាប្រទានលាភសក្ការៈដល់ពួកយើងផង។ ទ្រង់គឺជាអ្នកប្រទានលាភសក្ការៈដ៏ប្រសើរបំផុត។

១១៥-អល់ឡោះបានឆ្លើយថា: ពិតប្រាកដណាស់ យើងនឹងបញ្ចុះវាឱ្យពួកអ្នក។ ប៉ុន្តែបើជនណាក្នុងចំណោមពួកអ្នកនៅតែប្រឆាំងក្រោយពីនោះ យើងពិតជានឹងធ្វើទារុណកម្មគេនូវទារុណ-កម្មមួយដែលយើងមិនធ្លាប់ធ្វើវាទៅលើអ្នកណាម្នាក់ក្នុងចំណោមមនុស្សលោកនៅលើលោកិយនេះ។

១១៦-ហើយ(ចូរចងចាំ)នៅពេលដែលអល់ឡោះបានសួរថា: ឱអ៊ីសាកូនម៉ារយ៉ាំ! តើអ្នកឬដែលបាននិយាយទៅកាន់មនុស្សលោកថា: ចូរពួកអ្នកយកខ្ញុំ និងម្តាយរបស់ខ្ញុំធ្វើជាម្ចាស់ពីរ ក្រៅពីអល់ឡោះ? អ៊ីសាបានឆ្លើយថា: ទ្រង់មហាស្អាតស្អំ! មិនសក្តិសមទេសម្រាប់ខ្ញុំក្នុងការនិយាយនូវអ្វីដែលពុំមែនជាការពិតសម្រាប់ខ្ញុំនោះ។ ប្រសិនបើខ្ញុំបាននិយាយបែបនេះមែន ទ្រង់ប្រាកដជាបានជ្រាបវាជាមិនខាន។ ទ្រង់ជ្រាបនូវអ្វីដែលមាននៅក្នុងខ្លួនខ្ញុំ តែខ្ញុំមិនអាចដឹងនូវអ្វីដែលមាននៅក្នុងខ្លួនទ្រង់ឡើយ។ ពិតប្រាកដណាស់ ទ្រង់តែមួយគត់មហាដឹងនូវប្រការអាថ៌កំបាំងទាំងឡាយ។

១១៧-ខ្ញុំមិនបាននិយាយទៅកាន់ពួកគេក្រៅពីអ្វីដែលទ្រង់បានប្រើខ្ញុំឱ្យនិយាយថា : ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់របស់ខ្ញុំនិងជាម្ចាស់របស់ពួកអ្នកនោះឡើយ។ ហើយខ្ញុំជាសាក្សីលើពួកគេដរាបណាខ្ញុំនៅក្នុងចំណោមពួកគេ។ តែនៅពេលដែលទ្រង់បានបញ្ចប់ជីវិតរបស់ខ្ញុំ(បញ្ចប់ការរស់នៅលើផែនដី ហើយលើកខ្ញុំ

وَنَعْلَمَ أَن قَدْ صَدَقْتَنَا وَنَكُونَ عَلَيْهَا مِنَ ٱلشَّـٰهِدِينَ ﴿١١٣﴾

قَالَ عِيسَى ٱبْنُ مَرْيَمَ ٱللَّهُمَّ رَبَّنَآ أَنزِلْ عَلَيْنَا مَآئِدَةً مِّنَ ٱلسَّمَآءِ تَكُونُ لَنَا عِيدًا لِّأَوَّلِنَا وَءَاخِرِنَا وَءَايَةً مِّنكَ ۖ وَٱرْزُقْنَا وَأَنتَ خَيْرُ ٱلرَّٰزِقِينَ ﴿١١٤﴾

قَالَ ٱللَّهُ إِنِّى مُنَزِّلُهَا عَلَيْكُمْ ۖ فَمَن يَكْفُرْ بَعْدُ مِنكُمْ فَإِنِّىٓ أُعَذِّبُهُۥ عَذَابًا لَّآ أُعَذِّبُهُۥٓ أَحَدًا مِّنَ ٱلْعَـٰلَمِينَ ﴿١١٥﴾

وَإِذْ قَالَ ٱللَّهُ يَـٰعِيسَى ٱبْنَ مَرْيَمَ ءَأَنتَ قُلْتَ لِلنَّاسِ ٱتَّخِذُونِى وَأُمِّىَ إِلَـٰهَيْنِ مِن دُونِ ٱللَّهِ ۖ قَالَ سُبْحَـٰنَكَ مَا يَكُونُ لِىٓ أَنْ أَقُولَ مَا لَيْسَ لِى بِحَقٍّ ۚ إِن كُنتُ قُلْتُهُۥ فَقَدْ عَلِمْتَهُۥ ۚ تَعْلَمُ مَا فِى نَفْسِى وَلَآ أَعْلَمُ مَا فِى نَفْسِكَ ۚ إِنَّكَ أَنتَ عَلَّـٰمُ ٱلْغُيُوبِ ﴿١١٦﴾

مَا قُلْتُ لَهُمْ إِلَّا مَآ أَمَرْتَنِى بِهِۦٓ أَنِ ٱعْبُدُوا۟ ٱللَّهَ رَبِّى وَرَبَّكُمْ ۚ وَكُنتُ عَلَيْهِمْ شَهِيدًا مَّا دُمْتُ فِيهِمْ ۖ فَلَمَّا تَوَفَّيْتَنِى كُنتَ أَنتَ ٱلرَّقِيبَ عَلَيْهِمْ ۚ وَأَنتَ عَلَىٰ كُلِّ شَىْءٍ شَهِيدٌ ﴿١١٧﴾

ទៅលើមេឃទាំងរស់) ទ្រង់ជាអ្នកឃ្លាំមើលទៅលើពួកគេ។ ហើយទ្រង់ជាសាក្សីលើអ្វីៗទាំងអស់។

إِن تُعَذِّبْهُمْ فَإِنَّهُمْ عِبَادُكَ ۖ وَإِن تَغْفِرْ لَهُمْ فَإِنَّكَ أَنتَ ٱلْعَزِيزُ ٱلْحَكِيمُ ﴿١١٨﴾

១១៨-ប្រសិនបើទ្រង់ធ្វើទារុណកម្មពួកគេ ពិតប្រាកដណាស់ពួកគេជាខ្ញុំរបស់ទ្រង់។ តែបើទ្រង់អភ័យទោសឱ្យពួកគេវិញ ពិតប្រាកដណាស់ ទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត។

قَالَ ٱللَّهُ هَٰذَا يَوْمُ يَنفَعُ ٱلصَّٰدِقِينَ صِدْقُهُمْ ۚ لَهُمْ جَنَّٰتٌ تَجْرِى مِن تَحْتِهَا ٱلْأَنْهَٰرُ خَٰلِدِينَ فِيهَآ أَبَدًا ۚ رَّضِىَ ٱللَّهُ عَنْهُمْ وَرَضُوا۟ عَنْهُ ۚ ذَٰلِكَ ٱلْفَوْزُ ٱلْعَظِيمُ ﴿١١٩﴾

១១៩-អល់ឡោះបានមានបន្ទូលថា: នេះជាថ្ងៃ(ថ្ងៃបរលោក) ដែលបណ្តាអ្នកដែលមានជំនឿពិតទទួលផលពីជំនឿពិតរបស់ពួកគេ។ ពួកគេនឹងទទួលបានឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។ អល់ឡោះបានយល់ព្រមចំពោះពួកគេ ហើយពួកគេក៏បានយល់ព្រមចំពោះទ្រង់វិញដែរ។ នោះគឺជាជោគជ័យដ៏ធំធេង។

لِلَّهِ مُلْكُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ وَمَا فِيهِنَّ ۚ وَهُوَ عَلَىٰ كُلِّ شَىْءٍ قَدِيرٌۢ ﴿١٢٠﴾

១២០-ការគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី ព្រមទាំងអ្វីៗដែលមាននៅក្នុងវាទាំងអស់ គឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ហើយទ្រង់មានអានុភាពលើអ្វីៗទាំងអស់។

## ជំពូកអាល់អាន់អាម

سورة الأنعام

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់។

ٱلْحَمْدُ لِلَّهِ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ وَجَعَلَ ٱلظُّلُمَٰتِ وَٱلنُّورَ ۖ ثُمَّ ٱلَّذِينَ كَفَرُوا۟ بِرَبِّهِمْ يَعْدِلُونَ ﴿١﴾

១-រាល់ការសរសើរទាំងឡាយទៅចំពោះអល់ឡោះ ដែលទ្រង់បានបង្កើតមេឃជាច្រើនជាន់ និងផែនដី និងបានបង្កើតភាពងងឹត(ពេលយប់) និងពន្លឺ(ពេលថ្ងៃ)។ ក្រោយមកពួកដែលប្រឆាំងនោះបែរជាធ្វើស្ហ៊ីរិកនឹងម្ចាស់របស់ពួកគេទៅវិញ។

هُوَ ٱلَّذِى خَلَقَكُم مِّن طِينٍ ثُمَّ قَضَىٰٓ أَجَلًا ۖ وَأَجَلٌ مُّسَمًّى عِندَهُۥ ۖ ثُمَّ أَنتُمْ تَمْتَرُونَ ﴿٢﴾

២-ទ្រង់គឺជាអ្នកដែលបានបង្កើតពួកអ្នកអំពីដីឥដ្ឋបន្ទាប់មកទ្រង់បានកំណត់អាយុជីវិត(របស់ពួកអ្នក)។ ហើយពេលវេលាមួយដែលត្រូវកំណត់(ថ្ងៃបរលោក)គឺនៅនឹងទ្រង់។ ក្រោយមកពួកអ្នកនៅតែសង្ស័យ។

وَهُوَ ٱللَّهُ فِى ٱلسَّمَٰوَٰتِ وَفِى ٱلْأَرْضِ ۖ يَعْلَمُ سِرَّكُمْ وَجَهْرَكُمْ وَيَعْلَمُ مَا تَكْسِبُونَ ﴿٣﴾

៣-ហើយទ្រង់ជាអល់ឡោះដែលត្រូវគេគោរពសក្ការៈទាំងអ្នកនៅលើមេឃជាច្រើនជាន់និងផែនដី។ ទ្រង់ដឹងនូវអាថិកំបាំងរបស់ពួកអ្នក និងការលាតត្រដាងរបស់ពួកអ្នក ហើយទ្រង់ក៏ដឹងផងដែរ

នូវអ្វីដែលពួកអ្នកសាង ។

៤-ហើយគ្មានភស្តុតាងណាមួយក្នុងចំណោមភស្តុតាងទាំងឡាយនៃម្ចាស់របស់ពួកគេ(ពួកមូស្ហរីគីន) មកដល់ពួកគេ ក្រៅពីពួកគេជាអ្នកបែរចេញពីវានោះឡើយ ។

وَمَا تَأۡتِيهِم مِّنۡ ءَايَةٖ مِّنۡ ءَايَٰتِ رَبِّهِمۡ إِلَّا كَانُواْ عَنۡهَا مُعۡرِضِينَ ﴿٤﴾

៥-ពិតប្រាកដណាស់ ពួកគេបានបដិសេធនឹងការពិតនៅពេលដែលវាបានមកដល់ពួកគេ ។ ហើយដំណឹងទាំងឡាយដែលពួកគេបានចំអកនោះនឹងមកដល់ពួកគេ ។

فَقَدۡ كَذَّبُواْ بِٱلۡحَقِّ لَمَّا جَآءَهُمۡۖ فَسَوۡفَ يَأۡتِيهِمۡ أَنۢبَٰٓؤُاْ مَا كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ﴿٥﴾

៦-តើពួកគេមិនដឹងទេឬ យើងបានបំផ្លាញមនុស្សជាច្រើនជំនាន់មកហើយមុនពួកគេ ដែលយើងបានផ្ដល់លទ្ធភាពឱ្យពួកគេនៅលើផែនដីនូវអ្វីដែលយើងមិនធ្លាប់បានផ្ដល់ឱ្យពួកអ្នក ។ ហើយយើងបានបញ្ចុះទឹកភ្លៀងយ៉ាងច្រើនទៅលើពួកគេ ហើយយើងបានបង្កើតទន្លេជាច្រើនហូរពីក្រោមពួកគេ ។ តែក្រោយមកយើងក៏បានបំផ្លាញពួកគេដោយសារតែបាបកម្មរបស់ពួកគេ ហើយយើងបានបង្កើតបន្ទាប់ពីពួកគេនូវមនុស្សជំនាន់ក្រោយៗមកទៀតនោះ?

أَلَمۡ يَرَوۡاْ كَمۡ أَهۡلَكۡنَا مِن قَبۡلِهِم مِّن قَرۡنٖ مَّكَّنَّٰهُمۡ فِي ٱلۡأَرۡضِ مَا لَمۡ نُمَكِّن لَّكُمۡ وَأَرۡسَلۡنَا ٱلسَّمَآءَ عَلَيۡهِم مِّدۡرَارٗا وَجَعَلۡنَا ٱلۡأَنۡهَٰرَ تَجۡرِي مِن تَحۡتِهِمۡ فَأَهۡلَكۡنَٰهُم بِذُنُوبِهِمۡ وَأَنشَأۡنَا مِنۢ بَعۡدِهِمۡ قَرۡنًا ءَاخَرِينَ ﴿٦﴾

៧-ហើយប្រសិនបើយើងបានបញ្ចុះគម្ពីរឱ្យអ្នកនៅក្នុងក្រដាសបន្ទាប់មកពួកគេប៉ះវាដោយដៃរបស់ពួកគេផ្ទាល់ ពួកដែលប្រឆាំងពិតជានិយាយថាៈ នេះគ្មានអ្វីក្រៅពីមន្តអាគមយ៉ាងពិតប្រាកដនោះឡើយ ។

وَلَوۡ نَزَّلۡنَا عَلَيۡكَ كِتَٰبٗا فِي قِرۡطَاسٖ فَلَمَسُوهُ بِأَيۡدِيهِمۡ لَقَالَ ٱلَّذِينَ كَفَرُوٓاْ إِنۡ هَٰذَآ إِلَّا سِحۡرٞ مُّبِينٞ ﴿٧﴾

៨-ហើយពួកគេបាននិយាយថាៈ ហេតុអ្វីបានជាគេ(អល់ឡោះ) មិនបញ្ចុះម៉ាឡាអ៊ីកាត់មួយរូបមកឱ្យគេ(មូហាំម៉ាត់)? ប្រសិនបើយើងបញ្ចុះម៉ាឡាអ៊ីកាត់មួយរូបវិញនោះ ប្រាកដជាកិច្ចការនោះនឹងត្រូវបញ្ចប់ ក្រោយមកពួកគេមិនត្រូវបានគេពន្យារពេល(ដើម្បីសារភាពកំហុស)ឡើយ ។

وَقَالُواْ لَوۡلَآ أُنزِلَ عَلَيۡهِ مَلَكٞۖ وَلَوۡ أَنزَلۡنَا مَلَكٗا لَّقُضِيَ ٱلۡأَمۡرُ ثُمَّ لَا يُنظَرُونَ ﴿٨﴾

៩-ហើយប្រសិនបើយើងបានបង្កើតអ្នកនាំសារជាម៉ាឡាអ៊ីកាត់វិញនោះ យើងប្រាកដជានឹងប្រែក្លាយគេទៅជាបុរសមួយរូប[1] ហើយយើងពិតជាបានបំភាន់ពួកគេនូវអ្វីដែលពួកគេកំពុងតែភាន់ច្រឡំ ។

وَلَوۡ جَعَلۡنَٰهُ مَلَكٗا لَّجَعَلۡنَٰهُ رَجُلٗا وَلَلَبَسۡنَا عَلَيۡهِم مَّا يَلۡبِسُونَ ﴿٩﴾

---

១-ព្រោះនៅក្នុងលោកិយនេះ មនុស្សគ្មានសមត្ថភាពគ្រប់គ្រាន់ដើម្បីនឹងមើលម៉ាឡាអ៊ីកាត់ក្នុងរូបភាពដើមរបស់ពួកគេនោះទេ ។

وَلَقَدِ ٱسۡتُهۡزِئَ بِرُسُلٖ مِّن قَبۡلِكَ فَحَاقَ بِٱلَّذِينَ سَخِرُواْ مِنۡهُم مَّا كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ١٠

១០-ហើយជាការពិតណាស់ បណ្ដាអ្នកនាំសារមុនអ្នកក៏ត្រូវបានគេចំអកដែរ ហើយ(ទណ្ឌកម្ម)ដោយសារតែអ្វីដែលពួកគេបានចំអកនោះបានធ្លាក់មកលើពួកដែលបានចំអកក្នុងចំណោមពួកគេ។

قُلۡ سِيرُواْ فِي ٱلۡأَرۡضِ ثُمَّ ٱنظُرُواْ كَيۡفَ كَانَ عَٰقِبَةُ ٱلۡمُكَذِّبِينَ ١١

១១-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចូរពួកអ្នកធ្វើដំណើរនៅលើផែនដីនេះ បន្ទាប់មកចូរពួកអ្នកក្រឡេកមើលចុះថា តើលទ្ធផលចុងក្រោយរបស់ពួកដែលបដិសេធនោះយ៉ាងដូចម្ដេច?

قُل لِّمَن مَّا فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ قُل لِّلَّهِۚ كَتَبَ عَلَىٰ نَفۡسِهِ ٱلرَّحۡمَةَۚ لَيَجۡمَعَنَّكُمۡ إِلَىٰ يَوۡمِ ٱلۡقِيَٰمَةِ لَا رَيۡبَ فِيهِۚ ٱلَّذِينَ خَسِرُوٓاْ أَنفُسَهُمۡ فَهُمۡ لَا يُؤۡمِنُونَ ١٢

១២-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើអ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងផែនដីជាកម្មសិទ្ធិរបស់អ្នកណា? ចូរអ្នកឆ្លើយថាៈ ជាកម្មសិទ្ធិរបស់អល់ឡោះ។ ទ្រង់បានកំណត់ក្ដីមេត្ដាករុណាលើខ្លួនរបស់ទ្រង់។ ទ្រង់ប្រាកដជានឹងប្រមូលផ្ដុំពួកអ្នកទៅកាន់ថ្ងៃបរលោកវិញដោយគ្មានការសង្ស័យចំពោះវាឡើយ។ ពួកដែលខាតបង់ខ្លួនឯងនោះ គឺជាពួកដែលគ្មានជំនឿ។

۞ وَلَهُۥ مَا سَكَنَ فِي ٱلَّيۡلِ وَٱلنَّهَارِۚ وَهُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ١٣

១៣-ហើយអ្វីៗដែលមាននៅពេលយប់និងពេលថ្ងៃ ទាំងនៅស្ងៀមនិងមានចលនា គឺជាកម្មសិទ្ធិរបស់ទ្រង់។ ហើយទ្រង់មហាឮមហាដឹង។

قُلۡ أَغَيۡرَ ٱللَّهِ أَتَّخِذُ وَلِيّٗا فَاطِرِ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَهُوَ يُطۡعِمُ وَلَا يُطۡعَمُۗ قُلۡ إِنِّيٓ أُمِرۡتُ أَنۡ أَكُونَ أَوَّلَ مَنۡ أَسۡلَمَۖ وَلَا تَكُونَنَّ مِنَ ٱلۡمُشۡرِكِينَ ١٤

១៤-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើឱ្យខ្ញុំយកអ្នកគាំពារក្រៅពីអល់ឡោះដែលជាអ្នកបង្កើតមេឃជាច្រើនជាន់និងផែនដី និងជាអ្នកប្រទានអាហារ ហើយទ្រង់មិនត្រូវការគេប្រទានអាហារឱ្យឬ? ចូរអ្នកពោលថាៈ ពិតប្រាកដណាស់ ខ្ញុំត្រូវបានគេ(អល់ឡោះ)បញ្ជាឱ្យក្លាយទៅជាអ្នកកាន់សាសនាអ៊ីស្លាមមុនគេ ហើយចូរអ្នកកុំក្លាយខ្លួនក្នុងចំណោមពួកមូស្ហរីគីនឱ្យសោះ។

قُلۡ إِنِّيٓ أَخَافُ إِنۡ عَصَيۡتُ رَبِّي عَذَابَ يَوۡمٍ عَظِيمٖ ١٥

១៥-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពិតប្រាកដណាស់ ខ្ញុំខ្លាចទារុណកម្មនាថ្ងៃដ៏ធំធេង(ថ្ងៃបរលោក) ប្រសិនបើខ្ញុំប្រព្រឹត្ដល្មើសនឹងម្ចាស់របស់ខ្ញុំនោះ។

مَّن يُصۡرَفۡ عَنۡهُ يَوۡمَئِذٖ فَقَدۡ رَحِمَهُۥۚ وَذَٰلِكَ ٱلۡفَوۡزُ ٱلۡمُبِينُ ١٦

១៦-នាថ្ងៃនោះ បុគ្គលណាដែលត្រូវគេបញ្ចៀសពីវា(ទារុណកម្ម) ទ្រង់ពិតជាបានអាណិតស្រឡាញ់ដល់គេ។ ហើយនោះគឺជាជោគជ័យដ៏ច្បាស់លាស់។

១៧-ហើយប្រសិនបើអល់ឡោះធ្វើឱ្យអ្នកជួបប្រទះនូវគ្រោះថ្នាក់អ្វីមួយ គឺគ្មានអ្នកជួយសង្គ្រោះគេក្រៅពីទ្រង់ឡើយ ។ ហើយប្រសិនបើទ្រង់ធ្វើឱ្យអ្នកជួបប្រទះនូវប្រការល្អណាមួយវិញ គឺទ្រង់មានអានុភាពលើអ្វីៗទាំងអស់ ។

១៨-ហើយទ្រង់ជាអ្នកមានអានុភាពលើបណ្តាខ្ញុំរបស់ទ្រង់ ហើយទ្រង់មហាគតិបណ្ឌិត មហាជ្រួតជ្រាប ។

១៩-ចូរអ្នក(មូហាំម៉ាត់)ពោលថា: តើអ្វីដែលធំជាងគេក្នុងការធ្វើសាក្សីនោះ? ចូរអ្នកឆ្លើយថា: អល់ឡោះគឺជាសាក្សីរវាងខ្ញុំនិងពួកអ្នក ។ ហើយគម្ពីរគួរអាននេះត្រូវបានគេបញ្ចុះមកឱ្យខ្ញុំដើម្បីដាស់តឿនព្រមានដល់ពួកអ្នក និងអ្នកណាដែលគម្ពីរគួរអានបានទៅដល់គេ ។ តើពួកអ្នកពិតជាធ្វើសាក្សីថា មានម្ចាស់ផ្សេង(ត្រូវគេគោរពសក្ការៈ) រួមជាមួយអល់ឡោះឬ? ចូរអ្នកពោលថា: ចំណែកខ្ញុំមិនធ្វើសាក្សីដូច្នោះឡើយ ។ ចូរអ្នកពោលទៀតថា: ពិតប្រាកដណាស់ ទ្រង់គឺជាម្ចាស់តែមួយគត់ ហើយខ្ញុំពិតជាមិនជាប់ពាក់ព័ន្ធនឹងអ្វីដែលពួកអ្នកកំពុងធ្វើស្ហ៊ីរិកឡើយ ។

២០-ពួកដែលយើងបានផ្តល់គម្ពីរ(តាវ៉រ៉ត និងអ៊ិញជីល)ឱ្យពួកគេ ពួកនោះស្គាល់គេ(មូហាំម៉ាត់)ដូចជាស្គាល់កូនចៅរបស់ពួកគេដែរ ។ ពួកដែលបានខាតបង់ខ្លួនឯងនោះ គឺពួកគេគ្មានជំនឿឡើយ ។

២១-គ្មានអ្នកណាអយុត្តិធម៌ជាងពួកដែលប្រឌិតរឿងភូតកុហកចំពោះអល់ឡោះ ឬបដិសេធនឹងភស្តុតាងនានារបស់ទ្រង់ឡើយ ។ ពិតប្រាកដណាស់ ពួកដែលអយុត្តិធម៌នោះនឹងមិនទទួលជោគជ័យឡើយ ។

២២-ហើយនៅថ្ងៃដែលយើងប្រមូលផ្តុំពួកគេទាំងអស់គ្នា ក្រោយមកយើងនឹងមានបន្ទូលទៅកាន់ពួកដែលបានធ្វើស្ហ៊ីរិកថា: ឯណាទៅម្ចាស់របស់ពួកអ្នកដែលពួកអ្នកធ្លាប់អះអាងនោះ?

២៣-ក្រោយមកពួកគេគ្មានចម្លើយអ្វីក្រៅពីបាននិយាយថា:

وَإِن يَمۡسَسۡكَ ٱللَّهُ بِضُرّٖ فَلَا كَاشِفَ لَهُۥٓ إِلَّا هُوَۖ وَإِن يَمۡسَسۡكَ بِخَيۡرٖ فَهُوَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ﴿١٧﴾

وَهُوَ ٱلۡقَاهِرُ فَوۡقَ عِبَادِهِۦۚ وَهُوَ ٱلۡحَكِيمُ ٱلۡخَبِيرُ ﴿١٨﴾

قُلۡ أَيُّ شَيۡءٍ أَكۡبَرُ شَهَٰدَةٗۖ قُلِ ٱللَّهُۖ شَهِيدُۢ بَيۡنِي وَبَيۡنَكُمۡۚ وَأُوحِيَ إِلَيَّ هَٰذَا ٱلۡقُرۡءَانُ لِأُنذِرَكُم بِهِۦ وَمَنۢ بَلَغَۚ أَئِنَّكُمۡ لَتَشۡهَدُونَ أَنَّ مَعَ ٱللَّهِ ءَالِهَةً أُخۡرَىٰۚ قُل لَّآ أَشۡهَدُۚ قُلۡ إِنَّمَا هُوَ إِلَٰهٞ وَٰحِدٞ وَإِنَّنِي بَرِيٓءٞ مِّمَّا تُشۡرِكُونَ ﴿١٩﴾

ٱلَّذِينَ ءَاتَيۡنَٰهُمُ ٱلۡكِتَٰبَ يَعۡرِفُونَهُۥ كَمَا يَعۡرِفُونَ أَبۡنَآءَهُمُۘ ٱلَّذِينَ خَسِرُوٓاْ أَنفُسَهُمۡ فَهُمۡ لَا يُؤۡمِنُونَ ﴿٢٠﴾

وَمَنۡ أَظۡلَمُ مِمَّنِ ٱفۡتَرَىٰ عَلَى ٱللَّهِ كَذِبًا أَوۡ كَذَّبَ بِـَٔايَٰتِهِۦٓۚ إِنَّهُۥ لَا يُفۡلِحُ ٱلظَّٰلِمُونَ ﴿٢١﴾

وَيَوۡمَ نَحۡشُرُهُمۡ جَمِيعٗا ثُمَّ نَقُولُ لِلَّذِينَ أَشۡرَكُوٓاْ أَيۡنَ شُرَكَآؤُكُمُ ٱلَّذِينَ كُنتُمۡ تَزۡعُمُونَ ﴿٢٢﴾

ثُمَّ لَمۡ تَكُن فِتۡنَتُهُمۡ إِلَّآ أَن قَالُواْ وَٱللَّهِ رَبِّنَا مَا

كُنَّا مُشْرِكِينَ ﴿٢٣﴾

ពួកយើងសូមស្បថនឹងអល់ឡោះដែលជាម្ចាស់របស់ពួកយើង ពួកយើងមិនមែនជាអ្នកស្ហ៊ីរិកឡើយ ។

ٱنظُرْ كَيْفَ كَذَبُوا۟ عَلَىٰٓ أَنفُسِهِمْ ۚ وَضَلَّ عَنْهُم
مَّا كَانُوا۟ يَفْتَرُونَ ﴿٢٤﴾

២៤-ចូរអ្នក(មូហាំម៉ាត់)មើលចុះ តើពួកគេបានភូតកុហកចំពោះខ្លួនឯងយ៉ាងដូចម្តេច? ហើយអ្វីដែលពួកគេធ្លាប់បានប្រឌិតនោះបានបាត់ចេញពីពួកគេ ។

وَمِنْهُم مَّن يَسْتَمِعُ إِلَيْكَ ۖ وَجَعَلْنَا عَلَىٰ قُلُوبِهِمْ
أَكِنَّةً أَن يَفْقَهُوهُ وَفِىٓ ءَاذَانِهِمْ وَقْرًا ۚ وَإِن يَرَوْا۟
كُلَّ ءَايَةٍ لَّا يُؤْمِنُوا۟ بِهَا ۚ حَتَّىٰٓ إِذَا جَآءُوكَ
يُجَٰدِلُونَكَ يَقُولُ ٱلَّذِينَ كَفَرُوٓا۟ إِنْ هَٰذَآ إِلَّآ
أَسَٰطِيرُ ٱلْأَوَّلِينَ ﴿٢٥﴾

២៥-ហើយនៅក្នុងចំណោមពួកគេ មានអ្នកខ្លះស្តាប់អ្នក(សូត្រគម្ពីរគួរអាន) ហើយយើងបានដាក់របាំងបាំងនៅលើចិត្តរបស់ពួកគេដើម្បីកុំឱ្យពួកគេយល់វា ហើយនៅក្នុងត្រចៀករបស់គេមានឆ្នុកចុក ។ ហើយទោះបីជាពួកគេមើលឃើញគ្រប់អាយ៉ាត់ទាំងអស់ ក៏ពួកគេមិនជឿនឹងវាដែរ ។ ទោះបីពួកគេបានមកដល់អ្នកក៏ដោយ ក៏ពួកគេនឹងប្រកែកជាមួយអ្នកដដែល ។ ពួកដែលប្រឆាំងនោះនិយាយថា: នេះ(គម្ពីរគួរអាន)គ្មានអ្វីក្រៅពីរឿងព្រេងនិទានរបស់ពួកជំនាន់មុននោះឡើយ ។

وَهُمْ يَنْهَوْنَ عَنْهُ وَيَنْـَٔوْنَ عَنْهُ ۖ وَإِن
يُهْلِكُونَ إِلَّآ أَنفُسَهُمْ وَمَا يَشْعُرُونَ ﴿٢٦﴾

២៦-ហើយពួកគេហាមឃាត់អ្នកដទៃមិនឱ្យតាមគេ(មូហាំ-ម៉ាត់) ហើយពួកគេផ្ទាល់ក៏ចេញឆ្ងាយអំពីគេដែរ ។ ហើយពួកគេមិនបំផ្លាញអ្វីក្រៅពីខ្លួនឯងឡើយ តែពួកគេមិនដឹងខ្លួន ។

وَلَوْ تَرَىٰٓ إِذْ وُقِفُوا۟ عَلَى ٱلنَّارِ فَقَالُوا۟ يَٰلَيْتَنَا
نُرَدُّ وَلَا نُكَذِّبَ بِـَٔايَٰتِ رَبِّنَا وَنَكُونَ مِنَ
ٱلْمُؤْمِنِينَ ﴿٢٧﴾

២៧-ហើយប្រសិនបើអ្នកមើលឃើញពេលដែលពួកគេត្រូវបានគេឱ្យឈរនៅមុខនរក ពួកគេនឹងនិយាយថា: អនិច្ចាអ្វីម្ល៉េះ! ប្រសិនបើពួកយើងត្រូវគេឱ្យវិលត្រឡប់ទៅ(លោកិយ)វិញ ពួកយើងនឹងមិនបដិសេធនឹងអាយ៉ាត់ៗនៃម្ចាស់របស់ពួកយើងឡើយ ហើយពួកយើងនឹងស្ថិតនៅក្នុងចំណោមបណ្តាអ្នកដែលមានជំនឿ ។

بَلْ بَدَا لَهُم مَّا كَانُوا۟ يُخْفُونَ مِن قَبْلُ ۖ
وَلَوْ رُدُّوا۟ لَعَادُوا۟ لِمَا نُهُوا۟ عَنْهُ وَإِنَّهُمْ
لَكَٰذِبُونَ ﴿٢٨﴾

២៨-ផ្ទុយទៅវិញ អ្វីដែលពួកគេបានលាក់បាំងកាលពីមុនបានលាតត្រដាងចំពោះពួកគេ ។ ហើយប្រសិនបើពួកគេត្រូវបានគេឱ្យវិលត្រឡប់ទៅ(លោកិយ)វិញមែននោះ ពួកគេពិតជានឹងវិលទៅរកអ្វីដែលគេបានហាមឃាត់ពួកគេនឹងវាដដែល ។ ហើយពិតប្រាកដណាស់ ពួកគេគឺជាពួកភូតកុហក ។

وَقَالُوٓا۟ إِنْ هِىَ إِلَّا حَيَاتُنَا ٱلدُّنْيَا وَمَا نَحْنُ

២៩-ហើយពួកគេបាននិយាយថា: គ្មានការរស់នៅណាក្រៅពីការរស់នៅក្នុងលោកិយរបស់ពួកយើងឡើយ ហើយពួកយើងក៏មិន

بِمَبۡعُوثِينَ ﴿٢٩﴾

ត្រូវគេធ្វើឱ្យរស់ឡើងវិញដែរ ។

وَلَوۡ تَرَىٰٓ إِذۡ وُقِفُواْ عَلَىٰ رَبِّهِمۡۚ قَالَ أَلَيۡسَ
هَٰذَا بِٱلۡحَقِّۚ قَالُواْ بَلَىٰ وَرَبِّنَاۚ قَالَ فَذُوقُواْ
ٱلۡعَذَابَ بِمَا كُنتُمۡ تَكۡفُرُونَ ﴿٣٠﴾

៣០-ហើយប្រសិនបើអ្នកមើលឃើញពេលដែលពួកគេត្រូវបានគេឱ្យឈរនៅចំពោះមុខម្ចាស់របស់ពួកគេ ខណៈដែលទ្រង់បានមានបន្ទូលទៅកាន់គេថាៈ តើនេះមិនមែនជាការពិតទេឬ? ពួកគេនឹងឆ្លើយថាៈ សូមស្បថនឹងម្ចាស់របស់ពួកយើង វាជាការពិត ។ ទ្រង់មានបន្ទូលទៀតថាៈ ដូច្នេះ ចូរពួកអ្នកភ្លក្សទារុណកម្មដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានប្រឆាំងចុះ ។

قَدۡ خَسِرَ ٱلَّذِينَ كَذَّبُواْ بِلِقَآءِ ٱللَّهِۖ حَتَّىٰٓ إِذَا
جَآءَتۡهُمُ ٱلسَّاعَةُ بَغۡتَةٗ قَالُواْ يَٰحَسۡرَتَنَا عَلَىٰ مَا
فَرَّطۡنَا فِيهَا وَهُمۡ يَحۡمِلُونَ أَوۡزَارَهُمۡ عَلَىٰ
ظُهُورِهِمۡۚ أَلَا سَآءَ مَا يَزِرُونَ ﴿٣١﴾

៣១-ពួកដែលបានបដិសេធនឹងការជួបអល់ឡោះនោះពិតជាបានខាតបង់ ។ លុះនៅពេលដែលថ្ងៃបរលោកបានមកដល់ពួកគេភ្លាមៗ ពួកគេនិយាយថាៈ ពួកយើងគួរឱ្យសោកស្តាយបំផុតទៅលើអ្វីដែលពួកយើងបានធ្វេសប្រហែសនៅក្នុងវា( លោកិយ ) ខណៈដែលពួកគេរែកពន់នូវបាបកម្មរបស់ខ្លួននៅលើខ្នងរបស់ពួកគេ ។ ចូរដឹងថា! អ្វីដែលពួកគេកំពុងរែកនោះគឺអាក្រក់បំផុត ។

وَمَا ٱلۡحَيَوٰةُ ٱلدُّنۡيَآ إِلَّا لَعِبٞ وَلَهۡوٞۖ وَلَلدَّارُ
ٱلۡأٓخِرَةُ خَيۡرٞ لِّلَّذِينَ يَتَّقُونَۚ أَفَلَا تَعۡقِلُونَ ﴿٣٢﴾

៣២-ហើយការរស់នៅក្នុងលោកិយគ្មានអ្វីក្រៅពីការលេងសើចឥតប្រយោជន៍នោះឡើយ ។ ហើយជាការពិតណាស់ លំនៅដ្ឋាននាថ្ងៃបរលោកល្អបំផុតសម្រាប់បណ្តាអ្នកដែលកោតខ្លាចអល់ឡោះ ។ ដូច្នេះ តើពួកអ្នកមិនពិចារណាទេឬ?

قَدۡ نَعۡلَمُ إِنَّهُۥ لَيَحۡزُنُكَ ٱلَّذِي يَقُولُونَۖ فَإِنَّهُمۡ
لَا يُكَذِّبُونَكَ وَلَٰكِنَّ ٱلظَّٰلِمِينَ بِـَٔايَٰتِ ٱللَّهِ
يَجۡحَدُونَ ﴿٣٣﴾

៣៣-យើងពិតជាដឹងថា អ្វីដែលពួកគេនិយាយនោះពិតជាធ្វើឱ្យអ្នកពិបាកចិត្ត ។ តាមពិតពួកគេមិនបដិសេធនឹងអ្នកឡើយ ប៉ុន្តែពួកបំពានទាំងនោះគ្រាន់តែប្រឆាំងនឹងភស្តុតាងនានារបស់អល់ឡោះប៉ុណ្ណោះ ។

وَلَقَدۡ كُذِّبَتۡ رُسُلٞ مِّن قَبۡلِكَ فَصَبَرُواْ عَلَىٰ
مَا كُذِّبُواْ وَأُوذُواْ حَتَّىٰٓ أَتَىٰهُمۡ نَصۡرُنَاۚ وَلَا
مُبَدِّلَ لِكَلِمَٰتِ ٱللَّهِۚ وَلَقَدۡ جَآءَكَ مِن نَّبَإِيْ
ٱلۡمُرۡسَلِينَ ﴿٣٤﴾

៣៤-ហើយជាការពិតណាស់ បណ្តាអ្នកនាំសារមុនអ្នកក៏ត្រូវបានគេបដិសេធដែរ ប៉ុន្តែពួកគេបានអត់ធ្មត់ចំពោះអ្វីដែលត្រូវបានគេបដិសេធ និងត្រូវបានគេធ្វើទុក្ខបុកម្នេញនោះ រហូតទាល់តែជំនួយរបស់យើងបានទៅដល់ពួកគេដោយគ្មានការផ្លាស់ប្តូរពាក្យពេចន៍ទាំងឡាយរបស់អល់ឡោះនោះឡើយ ។ ហើយដំណឹងមួយចំនួនរបស់បណ្តាអ្នកនាំសារពិតជាបានមកដល់អ្នក ។

៣៥-តែប្រសិនបើការងាកចេញរបស់ពួកគេបង្កការលំបាកដល់អ្នក(មូហាំម៉ាត់) ហើយប្រសិនបើអ្នកមានលទ្ធភាពស្វែងរកផ្លូវចូលទៅក្នុងដី ឬជណ្ដើរឡើងទៅលើមេឃ និងមានលទ្ធភាពនាំភស្តុតាងណាមួយមកបង្ហាញពួកគេ(ចូរអ្នកធ្វើចុះ)។ ប្រសិនបើអល់ឡោះមានចេតនា ទ្រង់ពិតជាប្រមូលផ្ដុំពួកគេទាំងអស់ឱ្យស្ថិតលើការចង្អុលបង្ហាញ។ ហេតុនេះ អ្នកមិនត្រូវស្ថិតក្នុងចំណោមពួកល្ងង់ខ្លៅឡើយ។

وَإِن كَانَ كَبُرَ عَلَيْكَ إِعْرَاضُهُمْ فَإِنِ ٱسْتَطَعْتَ
أَن تَبْتَغِىَ نَفَقًا فِى ٱلْأَرْضِ أَوْ سُلَّمًا فِى
ٱلسَّمَآءِ فَتَأْتِيَهُم بِـَٔايَةٍ ۚ وَلَوْ شَآءَ ٱللَّهُ
لَجَمَعَهُمْ عَلَى ٱلْهُدَىٰ ۚ فَلَا تَكُونَنَّ مِنَ
ٱلْجَـٰهِلِينَ ﴿٣٥﴾

៣៦-ការពិតមានតែពួកដែលស្តាប់ពាក្យសំដីអ្នក(មូហាំម៉ាត់) ទេដែលឆ្លើយតបនឹងការអំពាវនាវនោះ។ ចំណែកពួកដែលស្លាប់ (ដោយគ្មានជំនឿ) អល់ឡោះនឹងធ្វើឱ្យពួកគេរស់ឡើងវិញ បន្ទាប់មកពួកគេនឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់វិញ។

۞ إِنَّمَا يَسْتَجِيبُ ٱلَّذِينَ يَسْمَعُونَ ۘ وَٱلْمَوْتَىٰ
يَبْعَثُهُمُ ٱللَّهُ ثُمَّ إِلَيْهِ يُرْجَعُونَ ﴿٣٦﴾

៣៧-ហើយពួកគេបាននិយាយថា: ហេតុអ្វីបានជាគេមិនបានបញ្ចុះភស្តុតាងណាមួយពីម្ចាស់របស់គេ(មូហាំម៉ាត់)ឱ្យគេ? ចូរអ្នកតបវិញថា: ពិតប្រាកដណាស់ អល់ឡោះមានលទ្ធភាពក្នុងការបញ្ចុះភស្តុតាង ក៏ប៉ុន្តែពួកគេភាគច្រើនមិនដឹងឡើយ។

وَقَالُوا۟ لَوْلَا نُزِّلَ عَلَيْهِ ءَايَةٌ مِّن رَّبِّهِۦ ۚ قُلْ
إِنَّ ٱللَّهَ قَادِرٌ عَلَىٰٓ أَن يُنَزِّلَ ءَايَةً وَلَـٰكِنَّ
أَكْثَرَهُمْ لَا يَعْلَمُونَ ﴿٣٧﴾

៣៨-គ្រប់សត្វទាំងអស់ដែលដើរនៅលើដី និងបក្សីទាំងអស់ដែលហើរដោយស្លាបទាំងពីរ គឺសុទ្ធតែជាអំបូរ(ដែលទ្រង់បានបង្កើត)ដូចពួកអ្នកដែរ។ យើងមិនបានបោះបង់ចោលអ្វីមួយនៅក្នុងបញ្ជីកំណត់ត្រា(ឡាវហុលម៉ះហ្វ៊ូស)ឡើយ។ បន្ទាប់មកពួកគេនឹងត្រូវគេប្រមូលផ្ដុំទៅកាន់ម្ចាស់របស់ពួកគេវិញ។

وَمَا مِن دَآبَّةٍ فِى ٱلْأَرْضِ وَلَا طَـٰٓئِرٍ يَطِيرُ
بِجَنَاحَيْهِ إِلَّآ أُمَمٌ أَمْثَالُكُم ۚ مَّا فَرَّطْنَا
فِى ٱلْكِتَـٰبِ مِن شَىْءٍ ۚ ثُمَّ إِلَىٰ رَبِّهِمْ
يُحْشَرُونَ ﴿٣٨﴾

៣៩-ហើយពួកដែលបានបដិសេធនឹងភស្តុតាងនានារបស់យើង គឺជាពួកថ្លង់ និងពួកគ ដែលស្ថិតនៅក្នុងភាពងងឹតបំផុត។ អ្នកណាដែលអល់ឡោះមានចេតនា(ឱ្យវង្វេង) ប្រាកដជាទ្រង់នឹងធ្វើឱ្យគេវង្វេង ហើយបើអ្នកណាដែលទ្រង់មានចេតនា(ចង្អុលបង្ហាញវិញ) ប្រាកដជាទ្រង់នឹងធ្វើឱ្យគេស្ថិតនៅលើមាគ៌ាដ៏ត្រឹមត្រូវ។

وَٱلَّذِينَ كَذَّبُوا۟ بِـَٔايَـٰتِنَا صُمٌّ وَبُكْمٌ فِى
ٱلظُّلُمَـٰتِ ۗ مَن يَشَإِ ٱللَّهُ يُضْلِلْهُ وَمَن يَشَأْ
يَجْعَلْهُ عَلَىٰ صِرَٰطٍ مُّسْتَقِيمٍ ﴿٣٩﴾

៤០-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើទារុណកម្មរបស់អល់ឡោះបានមកដល់ពួកអ្នក ឬក៏ថ្ងៃបរលោកបានមកដល់ពួកអ្នក តើពួកអ្នកនឹងបួងសួងសុំក្រៅពី

قُلْ أَرَءَيْتَكُمْ إِنْ أَتَىٰكُمْ عَذَابُ ٱللَّهِ أَوْ
أَتَتْكُمُ ٱلسَّاعَةُ أَغَيْرَ ٱللَّهِ تَدْعُونَ إِن كُنتُمْ

អល់ឡោះឬ ប្រសិនបើពួកអ្នកជាអ្នកត្រឹមត្រូវមែននោះ?

៤១-ផ្ទុយទៅវិញចំពោះទ្រង់តែមួយគត់ដែលពួកអ្នកនឹងបួងសួងសុំ។ ហើយអល់ឡោះនឹងបំបាត់នូវអ្វី(ប្រការអាក្រក់)ដែលពួកអ្នកសុំពីទ្រង់ ប្រសិនបើអល់ឡោះមានចេតនា។ ហើយពួកអ្នកនឹងភ្លេចនូវអ្វីដែលពួកអ្នកធ្វើស្ហ៊ីរិកនោះ។

៤២-ហើយជាការពិតណាស់ យើងបានបញ្ជូន(បណ្ដាអ្នកនាំសារ)ទៅចំពោះប្រជាជាតិជាច្រើនជំនាន់មុនអ្នក(មូហាំម៉ាត់)។ (តែពួកគេបានបដិសេធ) ដូច្នេះយើងបានដាក់ទណ្ឌកម្មពួកគេឱ្យជួបប្រទះនូវភាពក្រខ្សត់ និងជំងឺឈឺថ្កាត់ សង្ឃឹមថាពួកគេនឹងឱនលំទោន(សារភាពកំហុស)។

៤៣-ហេតុអ្វីបានជានៅពេលដែលទណ្ឌកម្មរបស់យើងបានធ្លាក់លើពួកគេ ពួកគេនៅតែមិនឱនលំទោន(សារភាពកំហុស)ទៀត។ ផ្ទុយទៅវិញចិត្តរបស់ពួកគេមានះ រឹងរូស ហើយស្ហៃតននបានតែងលំអពួកគេនូវអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត។

៤៤-ដូច្នេះ នៅពេលដែលពួកគេបានភ្លេចនូវអ្វីដែលគេ(អល់ឡោះ)បានរំលឹកពួកគេនោះ យើងបានបើកទ្វារទាំងឡាយនៃអ្វីៗ(ប្រការល្អ)ទាំងអស់ឱ្យពួកគេ លុះនៅពេលដែលពួកគេបានត្រេកត្រអាលនឹងអ្វីដែលគេបានផ្ដល់ឱ្យនោះ យើងក៏ដាក់ទណ្ឌកម្មពួកគេភ្លាម ពេលនោះស្រាប់តែពួកគេបាត់បង់អស់នូវក្ដីសង្ឃឹម។

៤៥-ហើយក្រុមដែលបានបំពានត្រូវគេបំផ្លាញទាំងអស់។ ហើយរាល់ការសរសើរគឺចំពោះអល់ឡោះ ដែលជាម្ចាស់គ្រប់គ្រងពិភពទាំងអស់។

៤៦-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចូរពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើអល់ឡោះដកយកការឮ និងការឃើញរបស់ពួកអ្នក ហើយទ្រង់បោះត្រាភ្ជិតទៅលើចិត្តរបស់ពួកអ្នកនោះ តើមានម្ចាស់ណាផ្សេងពីអល់ឡោះនឹងផ្ដល់វាឱ្យពួកអ្នកវិញ? ចូរអ្នកមើលចុះ តើយើងបញ្ជាក់ភស្តុតាងនានាប្រាប់ពួកគេយ៉ាងដូចម្ដេចខ្លះ បន្ទាប់មកពួកគេនៅតែងាកចេញដដែលនោះ?

صَٰدِقِينَ ﴿٤٠﴾
بَلۡ إِيَّاهُ تَدۡعُونَ فَيَكۡشِفُ مَا تَدۡعُونَ إِلَيۡهِ إِن
شَآءَ وَتَنسَوۡنَ مَا تُشۡرِكُونَ ﴿٤١﴾

وَلَقَدۡ أَرۡسَلۡنَآ إِلَىٰٓ أُمَمٖ مِّن قَبۡلِكَ فَأَخَذۡنَٰهُم
بِٱلۡبَأۡسَآءِ وَٱلضَّرَّآءِ لَعَلَّهُمۡ يَتَضَرَّعُونَ ﴿٤٢﴾

فَلَوۡلَآ إِذۡ جَآءَهُم بَأۡسُنَا تَضَرَّعُواْ وَلَٰكِن
قَسَتۡ قُلُوبُهُمۡ وَزَيَّنَ لَهُمُ ٱلشَّيۡطَٰنُ مَا
كَانُواْ يَعۡمَلُونَ ﴿٤٣﴾

فَلَمَّا نَسُواْ مَا ذُكِّرُواْ بِهِۦ فَتَحۡنَا عَلَيۡهِمۡ
أَبۡوَٰبَ كُلِّ شَيۡءٍ حَتَّىٰٓ إِذَا فَرِحُواْ بِمَآ
أُوتُوٓاْ أَخَذۡنَٰهُم بَغۡتَةٗ فَإِذَا هُم مُّبۡلِسُونَ ﴿٤٤﴾

فَقُطِعَ دَابِرُ ٱلۡقَوۡمِ ٱلَّذِينَ ظَلَمُواْۚ وَٱلۡحَمۡدُ لِلَّهِ
رَبِّ ٱلۡعَٰلَمِينَ ﴿٤٥﴾

قُلۡ أَرَءَيۡتُمۡ إِنۡ أَخَذَ ٱللَّهُ سَمۡعَكُمۡ وَأَبۡصَٰرَكُمۡ
وَخَتَمَ عَلَىٰ قُلُوبِكُم مَّنۡ إِلَٰهٌ غَيۡرُ ٱللَّهِ يَأۡتِيكُم
بِهِۗ ٱنظُرۡ كَيۡفَ نُصَرِّفُ ٱلۡأٓيَٰتِ ثُمَّ هُمۡ
يَصۡدِفُونَ ﴿٤٦﴾

قُلۡ أَرَءَيۡتَكُمۡ إِنۡ أَتَىٰكُمۡ عَذَابُ ٱللَّهِ بَغۡتَةً
أَوۡ جَهۡرَةً هَلۡ يُهۡلَكُ إِلَّا ٱلۡقَوۡمُ
ٱلظَّٰلِمُونَ ٤٧

៤៧-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើទារុណកម្មរបស់អល់ឡោះបានមកដល់ពួកអ្នកភ្លាមៗ ឬដោយចំហ(មានសញ្ញាសំគាល់មុន)នោះ តើមានអ្នកណាដែលត្រូវគេបំផ្លាញក្រៅពីពួកបំពានដែរឬទេ?

وَمَا نُرۡسِلُ ٱلۡمُرۡسَلِينَ إِلَّا مُبَشِّرِينَ وَمُنذِرِينَۖ
فَمَنۡ ءَامَنَ وَأَصۡلَحَ فَلَا خَوۡفٌ عَلَيۡهِمۡ وَلَا هُمۡ
يَحۡزَنُونَ ٤٨

៤៨-ហើយយើងមិនបានបញ្ជូនបណ្ដាអ្នកនាំសារក្រៅពីឱ្យពួកគេធ្វើជាអ្នកផ្ដល់ដំណឹងរីករាយ និងជាអ្នកដាស់តឿនព្រមាននោះឡើយ ។ ដូច្នេះ បុគ្គលណាដែលមានជំនឿនិងបានកែខ្លួននោះ គឺគ្មានការភ័យខ្លាចចំពោះពួកគេឡើយ ហើយពួកគេក៏មិនព្រួយបារម្ភដែរ ។

وَٱلَّذِينَ كَذَّبُواْ بِـَٔايَٰتِنَا يَمَسُّهُمُ ٱلۡعَذَابُ بِمَا
كَانُواْ يَفۡسُقُونَ ٤٩

៤៩-រីឯពួកដែលបានបដិសេធនឹងអាយ៉ាត់ៗរបស់យើងវិញ ទារុណកម្មនឹងធ្លាក់ទៅលើពួកគេដោយសារតែអ្វីដែលពួកគេធ្លាប់បានល្មើសនឹងបទបញ្ជារបស់យើង ។

قُل لَّآ أَقُولُ لَكُمۡ عِندِي خَزَآئِنُ ٱللَّهِ وَلَآ
أَعۡلَمُ ٱلۡغَيۡبَ وَلَآ أَقُولُ لَكُمۡ إِنِّي مَلَكٌۖ إِنۡ
أَتَّبِعُ إِلَّا مَا يُوحَىٰٓ إِلَيَّۚ قُلۡ هَلۡ يَسۡتَوِي
ٱلۡأَعۡمَىٰ وَٱلۡبَصِيرُۚ أَفَلَا تَتَفَكَّرُونَ ٥٠

៥០-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ខ្ញុំមិនដែលប្រាប់ពួកអ្នកថា: ឃ្លាំងទាំងឡាយរបស់អល់ឡោះនៅនឹងខ្ញុំ និងមិនដែលប្រាប់ពួកអ្នកថា: ខ្ញុំដឹងនូវប្រការអាថ៌កំបាំងឡើយ ហើយខ្ញុំក៏មិនដែលប្រាប់ពួកអ្នកថា: ពិតប្រាកដណាស់ ខ្ញុំជាម៉ាឡាអ៊ីកាត់ដែរ ។ ខ្ញុំមិនធ្វើតាមក្រៅពីអ្វីដែលគេ(អល់ឡោះ)ផ្ដល់សារឱ្យខ្ញុំឡើយ ។ ចូរអ្នកពោលទៀតថា: តើអ្នកពិការភ្នែក និងអ្នកមើលឃើញស្មើគ្នាដែរឬទេ? តើពួកអ្នកមិនពិចារណាទេឬ?

وَأَنذِرۡ بِهِ ٱلَّذِينَ يَخَافُونَ أَن يُحۡشَرُوٓاْ إِلَىٰ
رَبِّهِمۡ لَيۡسَ لَهُم مِّن دُونِهِۦ وَلِيّٞ وَلَا
شَفِيعٞ لَّعَلَّهُمۡ يَتَّقُونَ ٥١

៥១-ហើយតាមរយៈវា(គម្ពីរគួរអាន) ចូរអ្នកដាស់តឿនព្រមានបណ្ដាអ្នកដែលខ្លាចគេប្រមូលផ្ដុំទៅកាន់ម្ចាស់របស់ពួកគេថា: ពួកគេគ្មានអ្នកគាំពារណាក្រៅពីទ្រង់ឡើយ ហើយក៏គ្មានអ្នកជួយអន្តរាគមន៍ដែរ ។ សង្ឃឹមថា ពួកគេនឹងកោតខ្លាចអល់ឡោះ ។

وَلَا تَطۡرُدِ ٱلَّذِينَ يَدۡعُونَ رَبَّهُم بِٱلۡغَدَوٰةِ
وَٱلۡعَشِيِّ يُرِيدُونَ وَجۡهَهُۥۖ مَا عَلَيۡكَ مِنۡ
حِسَابِهِم مِّن شَيۡءٖ وَمَا مِنۡ حِسَابِكَ عَلَيۡهِم
مِّن شَيۡءٖ فَتَطۡرُدَهُمۡ فَتَكُونَ مِنَ

៥២-ចូរអ្នក(មូហាំម៉ាត់)កុំបណ្ដេញពួក(មូស្លីមទន់ខ្សោយ)ដែលបួងសួងសុំម្ចាស់របស់ពួកគេទាំងព្រឹកទាំងល្ងាច ដោយពួកគេចង់បានការយល់ព្រមពីទ្រង់ឱ្យសោះ ។ ការជំនុំជំរះពួកគេមិនមែនជាកាតព្វកិច្ចរបស់អ្នកឡើយ ហើយការជំនុំជំរះរបស់អ្នកក៏មិនមែនជាកាតព្វកិច្ចរបស់ពួកគេដែរ ។ ដូច្នេះប្រសិនបើអ្នកបោះបង់ពួកគេ អ្នកនឹងស្ថិតក្នុងចំណោមពួកដែលបំពាន ។

ٱلظَّٰلِمِينَ ﴿٥٢﴾

وَكَذَٰلِكَ فَتَنَّا بَعۡضَهُم بِبَعۡضٖ لِّيَقُولُوٓاْ
أَهَٰٓؤُلَآءِ مَنَّ ٱللَّهُ عَلَيۡهِم مِّنۢ بَيۡنِنَآۗ أَلَيۡسَ
ٱللَّهُ بِأَعۡلَمَ بِٱلشَّٰكِرِينَ ﴿٥٣﴾

៥៣-ដូច្នេះហើយ យើងបានសាកល្បងពួកគេមួយចំនួន( អ្នកមានដែលគ្មានជំនឿ ) នឹងមួយចំនួនទៀត( អ្នកក្រដែលមានជំនឿ ) ដែលពួកគេ( អ្នកមាន ) នឹងនិយាយថាៈ តើពួក( អ្នកក្រ ) ទាំងនេះឬដែលអល់ឡោះបានផ្ដល់នៀកម៉ាត់ឱ្យពួកគេនៅក្នុងចំណោមពួកយើងនោះ? ( ទ្រង់មានបន្ទូលវិញថា ) តើអល់ឡោះមិនមែនជាអ្នកដែលដឹងបំផុតចំពោះបណ្ដាអ្នកដែលដឹងគុណទេឬ?

وَإِذَا جَآءَكَ ٱلَّذِينَ يُؤۡمِنُونَ بِـَٔايَٰتِنَا فَقُلۡ
سَلَٰمٌ عَلَيۡكُمۡۖ كَتَبَ رَبُّكُمۡ عَلَىٰ نَفۡسِهِ
ٱلرَّحۡمَةَۖ أَنَّهُۥ مَنۡ عَمِلَ مِنكُمۡ سُوٓءَۢا بِجَهَٰلَةٖ
ثُمَّ تَابَ مِنۢ بَعۡدِهِۦ وَأَصۡلَحَ فَأَنَّهُۥ غَفُورٞ
رَّحِيمٞ ﴿٥٤﴾

៥៤-ហើយនៅពេលបណ្ដាអ្នកដែលមានជំនឿនឹងអាយ៉ាត់ៗរបស់យើងបានមកដល់អ្នកនោះ ចូរអ្នក( មូហាំម៉ាត់ ) ពោលទៅកាន់ពួកគេថាៈ សូមភាពសុខសាន្ដកើតមានដល់ពួកអ្នក ។ ម្ចាស់របស់ពួកអ្នកបានកំណត់ក្ដីមេត្ដាករុណាលើខ្លួនរបស់ទ្រង់ ។ ពិតប្រាកដណាស់ អ្នកណាក្នុងចំណោមពួកអ្នកបានប្រព្រឹត្ដអំពើអាក្រក់ដោយល្ងង់ខ្លៅ ក្រោយមកគេបានសារភាពកំហុស និងបានកែខ្លួនវិញបន្ទាប់ពីនោះ ពិតប្រាកដណាស់អល់ឡោះមហាអភ័យទោសមហាអាណិតស្រឡាញ់ ។

وَكَذَٰلِكَ نُفَصِّلُ ٱلۡأٓيَٰتِ وَلِتَسۡتَبِينَ سَبِيلُ
ٱلۡمُجۡرِمِينَ ﴿٥٥﴾

៥៥-ដូច្នោះដែរ យើងបញ្ជាក់ប្រាប់នូវអាយ៉ាត់ៗយ៉ាងក្បោះក្បាយ ដើម្បីស្ដែងឱ្យឃើញនូវមាគ៌ារបស់ពួកដែលប្រព្រឹត្ដអំពើអាក្រក់ ។

قُلۡ إِنِّي نُهِيتُ أَنۡ أَعۡبُدَ ٱلَّذِينَ تَدۡعُونَ مِن
دُونِ ٱللَّهِۚ قُل لَّآ أَتَّبِعُ أَهۡوَآءَكُمۡ قَدۡ
ضَلَلۡتُ إِذٗا وَمَآ أَنَا۠ مِنَ ٱلۡمُهۡتَدِينَ ﴿٥٦﴾

៥៦-ចូរអ្នកពោលថាៈ ពិតប្រាកដណាស់ ខ្ញុំត្រូវបានគេហាមឃាត់អំពីការគោរពសក្ការៈចំពោះអ្វីៗដែលពួកអ្នកកំពុងបួងសួងសុំផ្សេងពីអល់ឡោះ ។ ចូរអ្នកពោលទៀតថាៈ ខ្ញុំមិនធ្វើតាមចំណង់របស់ពួកអ្នកឡើយ ។ ប្រសិនបើខ្ញុំធ្វើដូច្នេះ ខ្ញុំពិតជាវង្វេង ហើយខ្ញុំក៏មិនស្ថិតក្នុងចំណោមអ្នកដែលទទួលបានការចង្អុលបង្ហាញដែរ ។

قُلۡ إِنِّي عَلَىٰ بَيِّنَةٖ مِّن رَّبِّي وَكَذَّبۡتُم بِهِۦۚ
مَا عِندِي مَا تَسۡتَعۡجِلُونَ بِهِۦٓۚ إِنِ
ٱلۡحُكۡمُ إِلَّا لِلَّهِۖ يَقُصُّ ٱلۡحَقَّۖ وَهُوَ خَيۡرُ
ٱلۡفَٰصِلِينَ ﴿٥٧﴾

៥៧-ចូរអ្នក( មូហាំម៉ាត់ ) ពោលថាៈ ពិតប្រាកដណាស់ ខ្ញុំស្ថិតនៅលើភស្ដុតាងដ៏ច្បាស់លាស់ពីម្ចាស់របស់ខ្ញុំ តែពួកអ្នកបានបដិសេធនឹងវា ។ ខ្ញុំពុំមានអ្វីដែលពួកអ្នកកំពុងតក់ក្រហល់នឹងវា ( ទារុណកម្ម ) នោះឡើយ ។ ការសម្រេចច្បាប់ទាំងអស់ គឺស្ថិតនៅលើអល់ឡោះដែលទ្រង់បញ្ជាក់យ៉ាងច្បាស់នូវការពិត ។ ហើយ

ទ្រង់គឺជាអ្នកវិនិច្ឆ័យដ៏ប្រសើរបំផុត ។

قُل لَّوۡ أَنَّ عِندِي مَا تَسۡتَعۡجِلُونَ بِهِۦ لَقُضِيَ
ٱلۡأَمۡرُ بَيۡنِي وَبَيۡنَكُمۡۗ وَٱللَّهُ أَعۡلَمُ
بِٱلظَّٰلِمِينَ ﴿٥٨﴾

៥៨-ចូរអ្នកពោលថាៈ ប្រសិនបើខ្ញុំមានអ្វីដែលពួកអ្នកនៅតក់ក្រហល់នឹងវា(ទារុណកម្ម)នោះ បញ្ហារវាងខ្ញុំ និងពួកអ្នកពិតជាត្រូវបានគេសម្រេច ។ ហើយអល់ឡោះដឹងបំផុតចំពោះពួកដែលបំពាន ។

۞ وَعِندَهُۥ مَفَاتِحُ ٱلۡغَيۡبِ لَا يَعۡلَمُهَآ إِلَّا هُوَۚ
وَيَعۡلَمُ مَا فِي ٱلۡبَرِّ وَٱلۡبَحۡرِۚ وَمَا تَسۡقُطُ مِن
وَرَقَةٍ إِلَّا يَعۡلَمُهَا وَلَا حَبَّةٖ فِي ظُلُمَٰتِ
ٱلۡأَرۡضِ وَلَا رَطۡبٖ وَلَا يَابِسٍ إِلَّا فِي كِتَٰبٖ
مُّبِينٖ ﴿٥٩﴾

៥៩-ហើយកូនសោទាំងឡាយនៃប្រការអាថ៌កំបាំងស្ថិតនៅនឹងទ្រង់ ដែលគ្មាននរណាម្នាក់ដឹងពីវាក្រៅពីទ្រង់ឡើយ ។ ទ្រង់ដឹងនូវអ្វីដែលមាននៅលើគោក និងមាននៅក្នុងសមុទ្រ ។ រាល់ស្លឹកឈើមួយសន្លឹកដែលជ្រុះនោះ សុទ្ធតែទ្រង់ដឹងទាំងអស់ ហើយគ្រាប់ដែលនៅក្នុងភាពងងឹតនៃដី និងអ្វីដែលសើម ហើយនិងអ្វីដែលស្ងួតនោះ សុទ្ធតែត្រូវបានកត់ត្រាយ៉ាងច្បាស់លាស់ ។

وَهُوَ ٱلَّذِي يَتَوَفَّىٰكُم بِٱلَّيۡلِ وَيَعۡلَمُ مَا
جَرَحۡتُم بِٱلنَّهَارِ ثُمَّ يَبۡعَثُكُمۡ فِيهِ لِيُقۡضَىٰٓ
أَجَلٞ مُّسَمّٗىۖ ثُمَّ إِلَيۡهِ مَرۡجِعُكُمۡ ثُمَّ يُنَبِّئُكُم
بِمَا كُنتُمۡ تَعۡمَلُونَ ﴿٦٠﴾

៦០-ទ្រង់ជាអ្នកដែលដកយកវិញ្ញាណរបស់ពួកអ្នក(ឱ្យដេកលក់)នៅពេលយប់ ហើយទ្រងក៏ដឹងរាល់កិច្ចការដែលពួកអ្នកបានធ្វើនៅពេលថ្ងៃដែរ ។បន្ទាប់មកទ្រង់ធ្វើឱ្យពួកអ្នករស់ឡើងវិញ(ភ្ញាក់ពីដេក)នៅពេលថ្ងៃ ដើម្បីគេបំពេញតាមការកំណត់ជីវិត(របស់ពួកអ្នក) ។ ក្រោយមក ការវិលត្រឡប់របស់ពួកអ្នកគឺទៅចំពោះទ្រង់ បន្ទាប់មកទ្រង់នឹងប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត ។

وَهُوَ ٱلۡقَاهِرُ فَوۡقَ عِبَادِهِۦۖ وَيُرۡسِلُ عَلَيۡكُمۡ
حَفَظَةً حَتَّىٰٓ إِذَا جَآءَ أَحَدَكُمُ ٱلۡمَوۡتُ
تَوَفَّتۡهُ رُسُلُنَا وَهُمۡ لَا يُفَرِّطُونَ ﴿٦١﴾

៦១-ហើយទ្រង់ជាអ្នកមានអានុភាពលើខ្ញុំទាំងឡាយរបស់ទ្រង់ ។ ហើយទ្រង់ជាអ្នកបញ្ជូនអ្នកថែរក្សា(ម៉ាឡាអ៊ីកាត់)មកកាន់ពួកអ្នក ។ លុះពេលសេចក្តីស្លាប់បានមកដល់អ្នកណាម្នាក់ក្នុងចំណោមពួកអ្នក បណ្តាអ្នកនាំសារ(ម៉ាឡាអ៊ីកាត់)របស់យើងជាអ្នកដកយកវិញ្ញាណរបស់គេ ដោយពួកគេមិនធ្វេសប្រហែសចំពោះភារៈកិច្ចរបស់ពួកគេឡើយ ។

ثُمَّ رُدُّوٓاْ إِلَى ٱللَّهِ مَوۡلَىٰهُمُ ٱلۡحَقِّۚ أَلَا لَهُ ٱلۡحُكۡمُ
وَهُوَ أَسۡرَعُ ٱلۡحَٰسِبِينَ ﴿٦٢﴾

៦២-បន្ទាប់មក អ្នកដែលស្លាប់ទាំងនោះត្រូវបានគេបញ្ជូនទៅកាន់អល់ឡោះដែលជាអ្នកគ្រប់គ្រងពួកគេយ៉ាងពិតប្រាកដ ។ ចូរដឹងថា! ការវិនិច្ឆ័យជាកម្មសិទ្ធិរបស់ទ្រង់ ហើយទ្រង់ជាអ្នកជំរះក្តីដ៏រហ័សបំផុត ។

៦៣-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើអ្នកណាជាអ្នកជួយសង្គ្រោះពួកអ្នកពីភាពងងឹត(គ្រោះមហន្តរាយ)នៅលើគោក និងសមុទ្រ ខណៈដែលពួកអ្នកកំពុងបួងសួងសុំពីទ្រង់ដោយឱនលំទោន និងស្ងាត់ស្ងៀមថាៈ ជាការពិតណាស់ ប្រសិនបើទ្រង់បានជួយសង្គ្រោះពួកយើងឱ្យរួចផុតពីគ្រោះមហន្តរាយទាំងនេះ ពួកយើងពិតជានឹងក្លាយទៅជាអ្នកដឹងគុណនោះ?

៦៤-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ គឺអល់ឡោះជាអ្នកជួយសង្គ្រោះពួកអ្នកឱ្យរួចផុតពីបញ្ហាទាំងនេះ និងពីទុក្ខសោកទាំងឡាយ តែក្រោយមកពួកអ្នកបែរជាធ្វើស្ហ៊ីរិកទៅវិញ។

៦៥-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ទ្រង់ជាអ្នកមានអានុភាពបំផុតក្នុងការដាក់ទារុណកម្មលើពួកអ្នកពីខាងលើ(ដូចជារន្ទះបាញ់...) ឬខាងក្រោមជើងរបស់ពួកអ្នក(ដូចជារញ្ជួយដី...) ឬធ្វើឱ្យពួកអ្នកច្របូកច្របល់ និងធ្វើឱ្យពួកអ្នកភ្លក្សនូវអំពើហិង្សា(កាប់សម្លាប់គ្នា)ទៅវិញទៅមក។ ចូរអ្នកពិនិត្យមើលចុះ តើយើងបញ្ជាក់ភស្តុតាងទាំងនេះយ៉ាងដូចម្តេច ដើម្បីឱ្យពួកគេស្វែងយល់នោះ?

៦៦-ក្រុមរបស់អ្នក(ក្រុមដែលប្រឆាំងនឹងមូហាំម៉ាត់)បានបដិសេធនឹងគម្ពីរគួរអាន ខណៈដែលវាត្រឹមត្រូវបំផុត។ ចូរអ្នកពោលថាៈ ខ្ញុំមិនមែនជាអ្នកគាំពារពួកអ្នកឡើយ។

៦៧-គ្រប់ដំណឹងទាំងអស់សុទ្ធតែបានកំណត់យ៉ាងជាក់ច្បាស់ ហើយពួកអ្នកគង់តែនឹងដឹង។

៦៨-ហើយនៅពេលដែលអ្នក(មូហាំម៉ាត់)បានឃើញពួកគេកំពុងបន្តុះបង្អាប់អាយ៉ាត់ៗរបស់យើងនោះ ចូរអ្នកងាកចេញពីពួកគេ ទាល់តែពួកគេជជែកគ្នាពីបញ្ហាផ្សេងវិញ។ តែប្រសិនបើស្ហៃតនធ្វើឱ្យអ្នកភ្លេច ក្រោយមកអ្នកបាននឹកឃើញវិញនោះ ចូរអ្នកកុំអង្គុយជាមួយក្រុមដែលបំពានទាំងនោះឱ្យសោះ។

៦៩-ការជំនុំជំរះរបស់ពួកគេ(ពួកប្រឆាំង)ពុំមែនជាតួនាទីរបស់បណ្តាអ្នកដែលកោតខ្លាចអល់ឡោះឡើយ ក៏ប៉ុន្តែវាគ្រាន់តែជាការក្រើនរំលឹកដើម្បីឱ្យពួកគេកោតខ្លាចអល់ឡោះប៉ុណ្ណោះ។

قُلۡ مَن يُنَجِّيكُم مِّن ظُلُمَٰتِ ٱلۡبَرِّ وَٱلۡبَحۡرِ تَدۡعُونَهُۥ تَضَرُّعٗا وَخُفۡيَةٗ لَّئِنۡ أَنجَىٰنَا مِنۡ هَٰذِهِۦ لَنَكُونَنَّ مِنَ ٱلشَّٰكِرِينَ ٦٣

قُلِ ٱللَّهُ يُنَجِّيكُم مِّنۡهَا وَمِن كُلِّ كَرۡبٖ ثُمَّ أَنتُمۡ تُشۡرِكُونَ ٦٤

قُلۡ هُوَ ٱلۡقَادِرُ عَلَىٰٓ أَن يَبۡعَثَ عَلَيۡكُمۡ عَذَابٗا مِّن فَوۡقِكُمۡ أَوۡ مِن تَحۡتِ أَرۡجُلِكُمۡ أَوۡ يَلۡبِسَكُمۡ شِيَعٗا وَيُذِيقَ بَعۡضَكُم بَأۡسَ بَعۡضٍۗ ٱنظُرۡ كَيۡفَ نُصَرِّفُ ٱلۡأٓيَٰتِ لَعَلَّهُمۡ يَفۡقَهُونَ ٦٥

وَكَذَّبَ بِهِۦ قَوۡمُكَ وَهُوَ ٱلۡحَقُّۚ قُل لَّسۡتُ عَلَيۡكُم بِوَكِيلٖ ٦٦

لِّكُلِّ نَبَإٖ مُّسۡتَقَرّٞۚ وَسَوۡفَ تَعۡلَمُونَ ٦٧

وَإِذَا رَأَيۡتَ ٱلَّذِينَ يَخُوضُونَ فِيٓ ءَايَٰتِنَا فَأَعۡرِضۡ عَنۡهُمۡ حَتَّىٰ يَخُوضُواْ فِي حَدِيثٍ غَيۡرِهِۦۚ وَإِمَّا يُنسِيَنَّكَ ٱلشَّيۡطَٰنُ فَلَا تَقۡعُدۡ بَعۡدَ ٱلذِّكۡرَىٰ مَعَ ٱلۡقَوۡمِ ٱلظَّٰلِمِينَ ٦٨

وَمَا عَلَى ٱلَّذِينَ يَتَّقُونَ مِنۡ حِسَابِهِم مِّن شَيۡءٖ وَلَٰكِن ذِكۡرَىٰ لَعَلَّهُمۡ

يَتَّقُونَ ﴿٦٩﴾

وَذَرِ ٱلَّذِينَ ٱتَّخَذُواْ دِينَهُمۡ لَعِبٗا وَلَهۡوٗا
وَغَرَّتۡهُمُ ٱلۡحَيَوٰةُ ٱلدُّنۡيَاۚ وَذَكِّرۡ بِهِۦٓ
أَن تُبۡسَلَ نَفۡسُۢ بِمَا كَسَبَتۡ لَيۡسَ لَهَا مِن
دُونِ ٱللَّهِ وَلِيّٞ وَلَا شَفِيعٞ وَإِن تَعۡدِلۡ
كُلَّ عَدۡلٖ لَّا يُؤۡخَذۡ مِنۡهَآۗ أُوْلَٰٓئِكَ ٱلَّذِينَ
أُبۡسِلُواْ بِمَا كَسَبُواْۖ لَهُمۡ شَرَابٞ مِّنۡ حَمِيمٖ
وَعَذَابٌ أَلِيمُۢ بِمَا كَانُواْ يَكۡفُرُونَ ﴿٧٠﴾

៧០-ហើយចូរអ្នក(មូហាំម៉ាត់)កុំរវីរវល់នឹងពួកដែលយកសាសនារបស់ពួកគេធ្វើជាការកំសាន្ត និងលេងសើច ហើយនិងពួកដែលត្រូវជីវិតលោកិយបានបោកបញ្ឆោតពួកគេឱ្យសោះ។ តែអ្នកត្រូវរំលឹក(ពួកគេ)តាមរយៈវា(គម្ពីរគួរអាន) ក្រែងបុគ្គលនោះត្រូវទទួលរងនូវអ្វី(ទារុណកម្ម)ដែលគេបានប្រព្រឹត្ត ព្រោះរូបគេគ្មានអ្នកណាជួយសង្គ្រោះក្រៅពីអល់ឡោះឡើយ ហើយក៏គ្មានអ្នកជួយអន្តរាគមន៍ដែរ។ ប្រសិនបើបុគ្គលនោះចង់លោះខ្លួនដោយជំនួនទាំងអស់ក៏មិនត្រូវគេទទួលយកដែរ។ ពួកទាំងនោះគឺជាពួកដែលត្រូវទទួលរងនូវអ្វីដែលពួកគេបានប្រព្រឹត្ត។ គ្រឿងផឹករបស់ពួកគេ(នៅក្នុងឋាននរក)គឺទឹកក្តៅដែលកំពុងពុះ ហើយពួកគេនឹងទទួលទារុណកម្មយ៉ាងឈឺចាប់ដោយសារតែអ្វីដែលពួកគេធ្លាប់ប្រឆាំង។

قُلۡ أَنَدۡعُواْ مِن دُونِ ٱللَّهِ مَا لَا يَنفَعُنَا وَلَا
يَضُرُّنَا وَنُرَدُّ عَلَىٰٓ أَعۡقَابِنَا بَعۡدَ إِذۡ هَدَىٰنَا ٱللَّهُ
كَٱلَّذِي ٱسۡتَهۡوَتۡهُ ٱلشَّيَٰطِينُ فِي ٱلۡأَرۡضِ
حَيۡرَانَ لَهُۥٓ أَصۡحَٰبٞ يَدۡعُونَهُۥٓ إِلَى ٱلۡهُدَى
ٱئۡتِنَاۗ قُلۡ إِنَّ هُدَى ٱللَّهِ هُوَ ٱلۡهُدَىٰۖ
وَأُمِرۡنَا لِنُسۡلِمَ لِرَبِّ ٱلۡعَٰلَمِينَ ﴿٧١﴾

៧១-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើឱ្យយើងបួងសួងសុំផ្សេងពីអល់ឡោះនូវអ្វីដែលមិនផ្តល់ផលប្រយោជន៍ដល់ពួកយើង និងមិនផ្តល់គ្រោះថ្នាក់ដល់ពួកយើង ហើយពួកយើងនឹងវិលត្រឡប់ទៅក្រោយវិញ(ភាពគ្មានជំនឿ)បន្ទាប់ពីអល់ឡោះបានចង្អុលបង្ហាញដល់ពួកយើងដូចជនដែលស្ហៃតនបានអូសទាញគេឱ្យវង្វេងនៅលើផែនដី ខណៈដែលរូបគេមានមិត្តភក្តិកំពុងអំពាវនាវគេទៅរកមាគ៌ាដែលមានការចង្អុលបង្ហាញ(ដោយនិយាយថា) ចូរអ្នកមកកាន់ពួកយើងមកនោះឬ? ចូរអ្នកពោលថាៈ ពិតប្រាកដណាស់ ការចង្អុលបង្ហាញរបស់អល់ឡោះវាជាការចង្អុលបង្ហាញដ៏ត្រឹមត្រូវ។ ហើយពួកយើងត្រូវបានគេប្រើដើម្បីប្រគល់ខ្លួនទៅចំពោះម្ចាស់គ្រប់គ្រងពិភពទាំងអស់។

وَأَنۡ أَقِيمُواْ ٱلصَّلَوٰةَ وَٱتَّقُوهُۚ وَهُوَ ٱلَّذِيٓ
إِلَيۡهِ تُحۡشَرُونَ ﴿٧٢﴾

៧២-ហើយពួកយើងត្រូវបានគេប្រើឱ្យប្រតិបត្តិសឡាត និងកោតខ្លាចទ្រង់។ ហើយទ្រង់តែមួយគត់ដែលពួកអ្នកត្រូវគេប្រមូលផ្តុំទៅកាន់ទ្រង់នោះ។

وَهُوَ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ
بِٱلۡحَقِّۖ وَيَوۡمَ يَقُولُ كُن فَيَكُونُۚ قَوۡلُهُ

៧៣-ហើយទ្រង់ជាអ្នកដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដីយ៉ាងពិតប្រាកដ។ ហើយ(ចូរចងចាំ)នៅថ្ងៃ(បរលោក)ដែល

ٱلْحَقُّ ۚ وَلَهُ ٱلْمُلْكُ يَوْمَ يُنفَخُ فِى ٱلصُّورِ ۚ
عَـٰلِمُ ٱلْغَيْبِ وَٱلشَّهَـٰدَةِ ۚ وَهُوَ ٱلْحَكِيمُ
ٱلْخَبِيرُ ﴿٧٣﴾

ទ្រង់នឹងមានបន្ទូលថាៈ ចូរកើតចុះ វាក៏កើតឡើងភ្លាម។ បន្ទូលរបស់ទ្រង់គឺជាការពិត។ ហើយអំណាចនៅថ្ងៃគេផ្លុំត្រែ(ដើម្បីធ្វើឱ្យមនុស្សលោករស់ឡើងវិញ)គឺជាកម្មសិទ្ធរបស់ទ្រង់តែមួយគត់។ ទ្រង់ជាអ្នកដឹងនូវប្រការអាថ៌កំបាំងនិងប្រការលាតត្រដាង។ ហើយទ្រង់មហាគតិបណ្ឌិត មហាដឹង។

۞ وَإِذْ قَالَ إِبْرَٰهِيمُ لِأَبِيهِ ءَازَرَ أَتَتَّخِذُ
أَصْنَامًا ءَالِهَةً ۖ إِنِّىٓ أَرَىٰكَ وَقَوْمَكَ فِى ضَلَـٰلٍ
مُّبِينٍ ﴿٧٤﴾

៧៤-ហើយ(ចូរចងចាំ)នៅពេលដែលអ៊ីព្រហ៊ីមបានពោលទៅកាន់ឪពុករបស់គាត់អាហ្សើរថាៈ តើអ្នកយករូបសំណាកទាំងនេះធ្វើជាម្ចាស់ឬ? ពិតប្រាកដណាស់ ខ្ញុំមើលឃើញថាអ្នកនិងក្រុមរបស់អ្នកស្ថិតក្នុងភាពវង្វេងយ៉ាងច្បាស់លាស់។

وَكَذَٰلِكَ نُرِىٓ إِبْرَٰهِيمَ مَلَكُوتَ ٱلسَّمَـٰوَٰتِ
وَٱلْأَرْضِ وَلِيَكُونَ مِنَ ٱلْمُوقِنِينَ ﴿٧٥﴾

៧៥-ដូច្នោះហើយ យើងបង្ហាញដល់អ៊ីព្រហ៊ីមនូវការគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី និងដើម្បីឱ្យគេស្ថិតក្នុងចំណោមអ្នកមានជំនឿពិតប្រាកដ។

فَلَمَّا جَنَّ عَلَيْهِ ٱلَّيْلُ رَءَا كَوْكَبًا ۖ قَالَ هَـٰذَا
رَبِّى ۖ فَلَمَّآ أَفَلَ قَالَ لَآ أُحِبُّ ٱلْـَٔافِلِينَ ﴿٧٦﴾

៧៦-នៅពេលដែលពេលយប់បានគ្របដណ្តប់លើគាត់ គាត់ក៏បានឃើញផ្កាយ។ គាត់បានពោលថាៈ នេះគឺជាម្ចាស់របស់ខ្ញុំ។ តែនៅពេលវាបានលិចបាត់ទៅវិញ គាត់ក៏បានពោលថាៈ ខ្ញុំមិនចូលចិត្តអ្វីដែលលិចបាត់ទៅវិញនោះទេ។

فَلَمَّا رَءَا ٱلْقَمَرَ بَازِغًا قَالَ هَـٰذَا رَبِّى ۖ فَلَمَّآ
أَفَلَ قَالَ لَئِن لَّمْ يَهْدِنِى رَبِّى لَأَكُونَنَّ مِنَ
ٱلْقَوْمِ ٱلضَّآلِّينَ ﴿٧٧﴾

៧៧-នៅពេលដែលគាត់បានឃើញព្រះច័ន្ទរះឡើង គាត់បានពោលថាៈ នេះគឺជាម្ចាស់របស់ខ្ញុំ។ តែនៅពេលព្រះច័ន្ទលិចបាត់ទៅវិញ គាត់ក៏បានពោលថាៈ ពិតប្រាកដណាស់ ប្រសិនបើគ្មានការចង្អុលបង្ហាញពីម្ចាស់របស់ខ្ញុំទេ ខ្ញុំពិតជាស្ថិតនៅក្នុងចំណោមពួកដែលវង្វេងជាមិនខាន។

فَلَمَّا رَءَا ٱلشَّمْسَ بَازِغَةً قَالَ هَـٰذَا رَبِّى
هَـٰذَآ أَكْبَرُ ۖ فَلَمَّآ أَفَلَتْ قَالَ يَـٰقَوْمِ إِنِّى
بَرِىٓءٌ مِّمَّا تُشْرِكُونَ ﴿٧٨﴾

៧៨-នៅពេលដែលគាត់បានឃើញព្រះអាទិត្យរះឡើង គាត់បានពោលថាៈ នេះគឺជាម្ចាស់របស់ខ្ញុំ មួយនេះធំជាងគេ។ តែនៅពេលព្រះអាទិត្យលិចបាត់ទៅវិញ គាត់ក៏បានពោលថាៈ ឱក្រុមរបស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំមិនពាក់ព័ន្ធនឹងអ្វីដែលពួកអ្នកធ្វើអំពើស្ហ៊ីរិកឡើយ។

إِنِّى وَجَّهْتُ وَجْهِىَ لِلَّذِى فَطَرَ ٱلسَّمَـٰوَٰتِ

៧៩-ពិតប្រាកដណាស់ ខ្ញុំបានតម្រង់មុខរបស់ខ្ញុំ(ក្នុងការគោរពសក្ការៈ)ដោយស្មោះត្រង់ចំពោះអ្នកដែលបានបង្កើតមេឃជាច្រើន

ជាន់និងផែនដី ។ ហើយរូបខ្ញុំមិនស្ថិតក្នុងចំណោមពួកធ្វើស្ហ៊ីរិកឡើយ ។

وَٱلْأَرْضَ حَنِيفًا ۖ وَمَآ أَنَا۠ مِنَ
ٱلْمُشْرِكِينَ ﴿٧٩﴾

៨០-ហើយក្រុមរបស់គាត់(អ៊ីព្រហ៊ីម) បានប្រឆាំងនឹងគាត់ ។ គាត់បានពោលថាៈ ហេតុអ្វីពួកអ្នកប្រឆាំងនឹងខ្ញុំក្នុងការជឿលើអល់ឡោះ ដោយទ្រង់បានចង្អុលបង្ហាញដល់រូបខ្ញុំហើយនោះ? ហើយរូបខ្ញុំមិនខ្លាចនូវអ្វីដែលពួកអ្នកធ្វើស្ហ៊ីរិកនឹងទ្រង់ឡើយ លើកលែងតែអ្វីដែលម្ចាស់របស់ខ្ញុំមានចេតនាប៉ុណ្ណោះ ។ ម្ចាស់របស់ខ្ញុំដឹងជ្រួតជ្រាបលើអ្វីៗទាំងអស់ ។ ដូច្នេះ តើពួកអ្នកមិនចងចាំទេឬ?

وَحَآجَّهُۥ قَوْمُهُۥ ۚ قَالَ أَتُحَٰٓجُّوٓنِّى فِى ٱللَّهِ وَقَدْ
هَدَىٰنِ ۚ وَلَآ أَخَافُ مَا تُشْرِكُونَ بِهِۦٓ إِلَّآ أَن
يَشَآءَ رَبِّى شَيْـًٔا ۗ وَسِعَ رَبِّى كُلَّ شَىْءٍ عِلْمًا ۗ
أَفَلَا تَتَذَكَّرُونَ ﴿٨٠﴾

៨១-តើឱ្យខ្ញុំខ្លាចនូវអ្វីដែលពួកអ្នកធ្វើស្ហ៊ីរិកយ៉ាងដូចម្ដេចទៅ បើពួកអ្នកមិនខ្លាចថា ពួកអ្នកពិតជាបានធ្វើស្ហ៊ីរិកចំពោះអល់ឡោះនូវអ្វីដែលទ្រង់មិនបានបញ្ចុះភស្តុតាងណាមួយឱ្យពួកអ្នកផងនោះ? ដូច្នេះ តើក្រុមមួយណានៃក្រុមទាំងពីរនេះមានសិទ្ធិទទួលនូវសុខសន្តិភាពជាង ប្រសិនបើពួកអ្នកបានដឹងមែននោះ?

وَكَيْفَ أَخَافُ مَآ أَشْرَكْتُمْ وَلَا
تَخَافُونَ أَنَّكُمْ أَشْرَكْتُم بِٱللَّهِ مَا لَمْ يُنَزِّلْ
بِهِۦ عَلَيْكُمْ سُلْطَٰنًا ۚ فَأَىُّ ٱلْفَرِيقَيْنِ أَحَقُّ
بِٱلْأَمْنِ ۖ إِن كُنتُمْ تَعْلَمُونَ ﴿٨١﴾

៨២-បណ្ដាអ្នកដែលមានជំនឿ ហើយពួកគេមិនយកជំនឿរបស់ពួកគេលាយឡំនឹងអំពើស្ហ៊ីរិកទេនោះ អ្នកទាំងនោះជាអ្នកដែលទទួលបានសុខសន្តិភាព ហើយពួកគេជាអ្នកដែលទទួលបានការចង្អុលបង្ហាញ ។

ٱلَّذِينَ ءَامَنُوا۟ وَلَمْ يَلْبِسُوٓا۟ إِيمَٰنَهُم بِظُلْمٍ
أُو۟لَٰٓئِكَ لَهُمُ ٱلْأَمْنُ وَهُم مُّهْتَدُونَ ﴿٨٢﴾

៨៣-នោះគឺជាភស្តុតាងរបស់យើងដែលយើងបានផ្ដល់វាឱ្យអ៊ីព្រហ៊ីម(សម្រាប់ធ្វើជាភស្តុតាង)ទៅលើក្រុមរបស់គេ ។ យើងនឹងលើកឋានៈជាច្រើនចំពោះអ្នកណាដែលយើងមានចេតនា ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកមហាគតិបណ្ឌិត មហាដឹង ។

وَتِلْكَ حُجَّتُنَآ ءَاتَيْنَٰهَآ إِبْرَٰهِيمَ عَلَىٰ قَوْمِهِۦ ۚ
نَرْفَعُ دَرَجَٰتٍ مَّن نَّشَآءُ ۗ إِنَّ رَبَّكَ حَكِيمٌ
عَلِيمٌ ﴿٨٣﴾

៨៤-យើងបានប្រទានអ៊ីស្ហាក(ជាកូន)និងយ៉ាក់កូប(ជាចៅ) ដល់គេ(អ៊ីព្រហ៊ីម) ។ យើងបានចង្អុលបង្ហាញពួកគេទាំងពីរ(នូវមាគ៌ាដ៏ត្រឹមត្រូវ) ។ ហើយនួហយើងក៏បានចង្អុលបង្ហាញពីមុន(ពួកគេ)ផងដែរ ព្រមទាំងកូនចៅរបស់គេ(នួហ)ដូចជា ដាវូដ ស៊ូឡៃម៉ាន អៃយ៉ូប យូសុហ្វ មូសា និងហារូន ។ ដូច្នេះដែរ យើងប្រទានឱ្យបណ្ដាអ្នកដែលសាងអំពើល្អ ។

وَوَهَبْنَا لَهُۥٓ إِسْحَٰقَ وَيَعْقُوبَ ۚ كُلًّا هَدَيْنَا ۚ
وَنُوحًا هَدَيْنَا مِن قَبْلُ ۖ وَمِن ذُرِّيَّتِهِۦ دَاوُۥدَ
وَسُلَيْمَٰنَ وَأَيُّوبَ وَيُوسُفَ وَمُوسَىٰ وَهَٰرُونَ ۚ
وَكَذَٰلِكَ نَجْزِى ٱلْمُحْسِنِينَ ﴿٨٤﴾

٨٥-ហើយ(យើងក៏បានប្រទានឱ្យ)ហ្សាការីយ៉ា យ៉ះយ៉ា អ៊ីសា និងអ៊ិលយ៉ាស។ អ្នកទាំងអស់នោះ ស្ថិតក្នុងចំណោមអ្នកដែលសាងអំពើល្អត្រឹមត្រូវ។

وَزَكَرِيَّا وَيَحْيَىٰ وَعِيسَىٰ وَإِلْيَاسَ ۖ كُلٌّ مِّنَ ٱلصَّٰلِحِينَ ﴿٨٥﴾

៨៦-រីឯអ៊ីស្មាអ៊ីល អ៊ិលយ៉ាសាក់ យូនុស និងលូត យើងបានលើកតម្កើងអ្នកទាំងនេះឱ្យខ្ពង់ខ្ពស់ជាងគេនៅលើពិភពលោកទាំងមូល(នាសម័យនោះ)។

وَإِسْمَٰعِيلَ وَٱلْيَسَعَ وَيُونُسَ وَلُوطًا ۚ وَكُلًّا فَضَّلْنَا عَلَى ٱلْعَٰلَمِينَ ﴿٨٦﴾

៨៧-ហើយដូនតារបស់ពួកគេ និងក្រុមគ្រួសាររបស់ពួកគេ ព្រមទាំងបងប្អូនរបស់ពួកគេមួយចំនួនយើងបានជ្រើសរើសពួកគេ និងចង្អុលបង្ហាញពួកគេនូវមាគ៌ាដ៏ត្រឹមត្រូវ។

وَمِنْ ءَابَآئِهِمْ وَذُرِّيَّٰتِهِمْ وَإِخْوَٰنِهِمْ ۖ وَٱجْتَبَيْنَٰهُمْ وَهَدَيْنَٰهُمْ إِلَىٰ صِرَٰطٍ مُّسْتَقِيمٍ ﴿٨٧﴾

៨៨-នោះគឺជាការចង្អុលបង្ហាញរបស់អល់ឡោះ ដោយទ្រង់ចង្អុលបង្ហាញដល់បុគ្គលណាដែលទ្រង់មានចេតនាក្នុងចំណោមខ្ញុំរបស់ទ្រង់។ ប្រសិនបើពួកគេ(បណ្តាណាពី)បានធ្វើស្ហ៊ីរិកនោះ អ្វីដែលពួកគេធ្លាប់បានសាងពិតជាបាត់បង់ពីពួកគេជាមិនខាន។

ذَٰلِكَ هُدَى ٱللَّهِ يَهْدِى بِهِۦ مَن يَشَآءُ مِنْ عِبَادِهِۦ ۚ وَلَوْ أَشْرَكُوا۟ لَحَبِطَ عَنْهُم مَّا كَانُوا۟ يَعْمَلُونَ ﴿٨٨﴾

៨៩-អ្នកទាំងនោះ គឺជាអ្នកដែលយើងបានផ្តល់គម្ពីរ និងចំណេះដឹង ហើយនិងភាពជាណាពីឱ្យពួកគេ។ តែប្រសិនបើពួកគេ(អ្នកស្រុកម៉ាក្កះ)ប្រឆាំងនឹងវា(អាយ៉ាត់) យើងពិតជាផ្តល់វាឱ្យទៅក្រុមផ្សេងទៀត ពុំមែនជាពួកដែលប្រឆាំងនឹងវាជាមិនខាន។

أُو۟لَٰٓئِكَ ٱلَّذِينَ ءَاتَيْنَٰهُمُ ٱلْكِتَٰبَ وَٱلْحُكْمَ وَٱلنُّبُوَّةَ ۚ فَإِن يَكْفُرْ بِهَا هَٰٓؤُلَآءِ فَقَدْ وَكَّلْنَا بِهَا قَوْمًا لَّيْسُوا۟ بِهَا بِكَٰفِرِينَ ﴿٨٩﴾

៩០-អ្នកទាំងនោះ គឺជាអ្នកដែលអល់ឡោះបានចង្អុលបង្ហាញ។ ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)អនុវត្តតាមការចង្អុលបង្ហាញរបស់ពួកគេចុះ។ ចូរអ្នកពោលថាៈ ខ្ញុំមិនទាមទារកម្រៃពីពួកអ្នកលើការផ្សព្វផ្សាយ(គម្ពីរគួរអាន)នេះឡើយ។ វាគ្មានអ្វីក្រៅពីការរំលឹកសម្រាប់ពិភពទាំងអស់នោះឡើយ។

أُو۟لَٰٓئِكَ ٱلَّذِينَ هَدَى ٱللَّهُ ۖ فَبِهُدَىٰهُمُ ٱقْتَدِهْ ۗ قُل لَّآ أَسْـَٔلُكُمْ عَلَيْهِ أَجْرًا ۖ إِنْ هُوَ إِلَّا ذِكْرَىٰ لِلْعَٰلَمِينَ ﴿٩٠﴾

៩១-ហើយពួកគេមិនបានលើកតម្កើងអល់ឡោះឱ្យសមនឹងឋានៈពិតប្រាកដរបស់ទ្រង់ឡើយ នៅពេលដែលពួកគេបាននិយាយថាៈ អល់ឡោះមិនបានបញ្ចុះអ្វីឱ្យមនុស្សលោកនោះ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើអ្នកណាជាអ្នកដែលបានបញ្ចុះគម្ពីរដែលមូសានាំវាមកដោយមានពន្លឺ និងការចង្អុលបង្ហាញដល់មនុស្ស

وَمَا قَدَرُوا۟ ٱللَّهَ حَقَّ قَدْرِهِۦٓ إِذْ قَالُوا۟ مَآ أَنزَلَ ٱللَّهُ عَلَىٰ بَشَرٍ مِّن شَىْءٍ ۗ قُلْ مَنْ أَنزَلَ ٱلْكِتَٰبَ ٱلَّذِى جَآءَ بِهِۦ مُوسَىٰ نُورًا وَهُدًى لِّلنَّاسِ ۖ تَجْعَلُونَهُۥ قَرَاطِيسَ تُبْدُونَهَا وَتُخْفُونَ كَثِيرًا ۖ

وَعُلِّمۡتُم مَّا لَمۡ تَعۡلَمُوٓاْ أَنتُمۡ وَلَآ ءَابَآؤُكُمۡۖ قُلِ
ٱللَّهُۖ ثُمَّ ذَرۡهُمۡ فِي خَوۡضِهِمۡ يَلۡعَبُونَ ﴿٩١﴾

លោកនោះ? បន្ទាប់មកពួកអ្នកចម្លងវាដាក់ក្នុងក្រដាស់ផ្សេងៗគ្នា ដោយពួកអ្នកលាតត្រដាងនូវផ្នែកខ្លះ និងលាក់ទុកនូវផ្នែកជាច្រើនទៀត ។ ហើយពួកអ្នកត្រូវបានគេបង្រៀនអំពីអ្វីដែលពួកអ្នក និងជីដូនជីតារបស់ពួកអ្នកមិនធ្លាប់បានដឹង ។ ចូរអ្នកពោលថាៈ គឺអល់ឡោះ( ជាអ្នកបញ្ចុះ) ។ បន្ទាប់មកចូរអ្នកបណ្តោយពួកគេឱ្យលេងសើចសប្បាយក្នុងភាពវង្វេងរបស់ពួកគេចុះ ។

وَهَٰذَا كِتَٰبٌ أَنزَلۡنَٰهُ مُبَارَكٞ مُّصَدِّقُ ٱلَّذِي
بَيۡنَ يَدَيۡهِ وَلِتُنذِرَ أُمَّ ٱلۡقُرَىٰ وَمَنۡ حَوۡلَهَاۚ
وَٱلَّذِينَ يُؤۡمِنُونَ بِٱلۡأٓخِرَةِ يُؤۡمِنُونَ بِهِۦۖ وَهُمۡ
عَلَىٰ صَلَاتِهِمۡ يُحَافِظُونَ ﴿٩٢﴾

៩២-ហើយនេះគឺជាគម្ពីរ( គួរអាន) ដែលយើងបានបញ្ចុះវាមកប្រកបដោយពរជ័យដែលជាការបញ្ជាក់ពីអ្វីដែលមានពីមុនមក និងដើម្បីដាស់តឿនព្រមានដល់ពួកម៉ាក្កះ និងអ្នកដែលនៅជុំវិញវា ។ ហើយបណ្ដាអ្នកដែលមានជំនឿនឹងថ្ងៃបរលោក គឺពួកគេមានជំនឿនឹងវា ហើយពួកគេថែរក្សាសឡាតគ្រប់ពេលវេលា ។

وَمَنۡ أَظۡلَمُ مِمَّنِ ٱفۡتَرَىٰ عَلَى ٱللَّهِ كَذِبًا أَوۡ قَالَ
أُوحِيَ إِلَيَّ وَلَمۡ يُوحَ إِلَيۡهِ شَيۡءٞ وَمَن قَالَ
سَأُنزِلُ مِثۡلَ مَآ أَنزَلَ ٱللَّهُۗ وَلَوۡ تَرَىٰٓ إِذِ
ٱلظَّٰلِمُونَ فِي غَمَرَٰتِ ٱلۡمَوۡتِ وَٱلۡمَلَٰٓئِكَةُ
بَاسِطُوٓاْ أَيۡدِيهِمۡ أَخۡرِجُوٓاْ أَنفُسَكُمُۖ ٱلۡيَوۡمَ
تُجۡزَوۡنَ عَذَابَ ٱلۡهُونِ بِمَا كُنتُمۡ تَقُولُونَ
عَلَى ٱللَّهِ غَيۡرَ ٱلۡحَقِّ وَكُنتُمۡ عَنۡ ءَايَٰتِهِۦ
تَسۡتَكۡبِرُونَ ﴿٩٣﴾

៩៣-តើអ្នកណាដែលបំពានជាងអ្នកដែលបានប្រឌិតពាក្យភូត-កុហកចំពោះអល់ឡោះ ឬអ្នកដែលបាននិយាយថាៈ ខ្ញុំត្រូវបានគេបញ្ចុះវ៉ាហ៊ីមកឱ្យខ្ញុំ ដោយគេមិនបានបញ្ចុះវ៉ាហ៊ីណាមួយដល់គេនិងអ្នកដែលបាននិយាយថាៈ ខ្ញុំនឹងបញ្ចុះ( គម្ពីរ) ដូចអ្វីដែលអល់ឡោះបានបញ្ចុះដែរនោះ? ប្រសិនបើអ្នក( មូហាំម៉ាត់) មើលឃើញពួកដែលបំពាននៅពេលដែលពួកគេស្ថិតក្នុងភាពឈឺចាប់នៃសេចក្ដីស្លាប់ ខណៈដែលម៉ាឡាអ៊ីកាត់លូកដៃទាញព្រលឹងរបស់ពួកគេ ( ដោយពោលថា) ចូរពួកឯងចេញពីខ្លួនមក! ថ្ងៃនេះគេនឹងតបស្នងពួកអ្នកនូវទារុណកម្មយ៉ាងអាម៉ាស់ ដោយសារតែអ្វីដែលពួកអ្នកបាននិយាយមួលបង្កាច់ទៅលើអល់ឡោះក្រៅពីការពិត ហើយពួកអ្នកបានក្រអឺតក្រទម( បដិសេធ) ចំពោះអាយ៉ាត់ៗរបស់ទ្រង់ ។

وَلَقَدۡ جِئۡتُمُونَا فُرَٰدَىٰ كَمَا خَلَقۡنَٰكُمۡ أَوَّلَ
مَرَّةٖ وَتَرَكۡتُم مَّا خَوَّلۡنَٰكُمۡ وَرَآءَ ظُهُورِكُمۡۖ
وَمَا نَرَىٰ مَعَكُمۡ شُفَعَآءَكُمُ ٱلَّذِينَ زَعَمۡتُمۡ
أَنَّهُمۡ فِيكُمۡ شُرَكَٰٓؤُاْۚ لَقَد تَّقَطَّعَ بَيۡنَكُمۡ وَضَلَّ
عَنكُم مَّا كُنتُمۡ تَزۡعُمُونَ ﴿٩٤﴾

៩៤-ហើយជាការពិតណាស់ ពួកអ្នកបានមកកាន់យើង( ដើម្បីជំនុំជំរះក្ដី) រៀងៗខ្លួន ដូចដែលយើងបានបង្កើតពួកអ្នកជាលើកដំបូងដែរ ។ ហើយពួកអ្នកបានបោះបង់ចោលនូវអ្វីដែលយើងបានផ្ដល់ឱ្យពួកអ្នកនៅខាងក្រោយខ្នងរបស់ពួកអ្នក ។ ហើយ( នៅថ្ងៃបរលោក) យើងមិនឃើញពួកជួយអន្តរាគមន៍របស់ពួកអ្នក ដែលពួកអ្នកបានអះអាងថាៈ ពួកគេពិតជាដៃគូជាមួយយើងក្នុងការជួយពួកអ្នកនោះនៅជាមួយពួកអ្នកឡើយ ។ ជាការពិតណាស់ ទំនាក់

ទំនងរវាង ពួកអ្នកបានកាត់ផ្ដាច់(តាំងពីនៅក្នុងលោកិយ) ហើយអ្វីដែលពួកអ្នកបានអះអាងនោះបានបាត់បង់អស់ពីពួកអ្នក។

៩៥-ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកដែលធ្វើឱ្យគ្រាប់រុក្ខជាតិប្រេះបែកនិងធ្វើឱ្យបណ្ដុលដុះចេញជារុក្ខជាតិ។ ទ្រង់ជាអ្នកបញ្ចេញរបស់រស់ពីរបស់ស្លាប់ ហើយទ្រង់ក៏ជាអ្នកបញ្ចេញរបស់ស្លាប់ពីរបស់រស់ដែរ។ សកម្មភាពទាំងនោះគឺមកពីអល់ឡោះ។ ដូច្នេះតើពួកអ្នកងាកចេញ(ពីការពិត)ដូចម្ដេចទៅ?

៩៦-ទ្រង់គឺជាអ្នកធ្វើឱ្យមានរស្មីពេលព្រឹក ហើយទ្រង់បានបង្កើតឱ្យមានពេលយប់ដើម្បីសម្រាក និងបានបង្កើតព្រះអាទិត្យនិងព្រះច័ន្ទដោយធ្វើដំណើរតាមការកំណត់។ ទាំងនោះគឺជាការកំណត់របស់អល់ឡោះ ដែលមហាខ្លាំងពូកែ មហាដឹង។

៩៧-ហើយអល់ឡោះជាអ្នកដែលបានបង្កើតផ្កាយជាច្រើនសម្រាប់ពួកអ្នក ដើម្បីជាសញ្ញាបង្ហាញដល់ពួកអ្នកតាមរយៈវាក្នុងពេលងងឹតនៅលើតំបន់ដីគោក ឬលើផ្ទៃសមុទ្រ។ ជាការពិតណាស់ យើងបានបង្ហាញយ៉ាងច្បាស់នូវបណ្ដាភស្តុតាងសម្រាប់ក្រុមដែលយល់ដឹង។

៩៨-ហើយទ្រង់គឺជាអ្នកដែលបានបង្កើតពួកអ្នកមកពីមនុស្សតែមួយ(អាដាំ) និងផ្ដល់កន្លែងស្នាក់នៅ(ក្នុងផ្ទៃម្ដាយ) ហើយនិងកន្លែងផ្ទុក(ក្នុងឆ្អឹងខ្នងឪពុក)។ ជាការពិតណាស់ យើងបានបង្ហាញយ៉ាងច្បាស់នូវបណ្ដាភស្តុតាងសម្រាប់ក្រុមដែលយល់ដឹង។

៩៩-ទ្រង់ជាអ្នកដែលបានបញ្ចុះទឹកភ្លៀងពីលើមេឃ។ ហើយយើងបានបណ្ដុះរុក្ខជាតិគ្រប់ប្រភេទតាមរយៈវា ហើយយើងក៏បានបង្កើតពីរុក្ខជាតិទាំងនេះនូវដំណាំបៃតងដែរ ដោយយើងបញ្ចេញពីវាទាំងនោះនូវគ្រាប់ធញ្ញជាតិយ៉ាងច្រើនជាកួរៗ ហើយដើមល្មើយើងបានបញ្ចេញនូវចង្កោមផ្លែរបស់វានៅជិតស្រួលបេះ និងចំការទំពាំងបាយជូរ អូលីវ និងទទឹមជាច្រើនដែលមានស្លឹកប្រហាក់ប្រហែលគ្នាតែផ្លែនិងរសជាតិខុសៗគ្នា។ ចូរពួកអ្នកសម្លឹងមើលផ្លែរបស់វានៅពេលវាចាប់ផ្ដើមផ្លែនិងពេលវាទុំចុះ។ ពិតប្រាកដណាស់ នៅក្នុង

۞ إِنَّ ٱللَّهَ فَالِقُ ٱلۡحَبِّ وَٱلنَّوَىٰۖ يُخۡرِجُ ٱلۡحَيَّ مِنَ ٱلۡمَيِّتِ وَمُخۡرِجُ ٱلۡمَيِّتِ مِنَ ٱلۡحَيِّۚ ذَٰلِكُمُ ٱللَّهُۖ فَأَنَّىٰ تُؤۡفَكُونَ ٩٥

فَالِقُ ٱلۡإِصۡبَاحِ وَجَعَلَ ٱلَّيۡلَ سَكَنٗا وَٱلشَّمۡسَ وَٱلۡقَمَرَ حُسۡبَانٗاۚ ذَٰلِكَ تَقۡدِيرُ ٱلۡعَزِيزِ ٱلۡعَلِيمِ ٩٦

وَهُوَ ٱلَّذِي جَعَلَ لَكُمُ ٱلنُّجُومَ لِتَهۡتَدُواْ بِهَا فِي ظُلُمَٰتِ ٱلۡبَرِّ وَٱلۡبَحۡرِۗ قَدۡ فَصَّلۡنَا ٱلۡأٓيَٰتِ لِقَوۡمٖ يَعۡلَمُونَ ٩٧

وَهُوَ ٱلَّذِيٓ أَنشَأَكُم مِّن نَّفۡسٖ وَٰحِدَةٖ فَمُسۡتَقَرّٞ وَمُسۡتَوۡدَعٞۗ قَدۡ فَصَّلۡنَا ٱلۡأٓيَٰتِ لِقَوۡمٖ يَفۡقَهُونَ ٩٨

وَهُوَ ٱلَّذِيٓ أَنزَلَ مِنَ ٱلسَّمَآءِ مَآءٗ فَأَخۡرَجۡنَا بِهِۦ نَبَاتَ كُلِّ شَيۡءٖ فَأَخۡرَجۡنَا مِنۡهُ خَضِرٗا نُّخۡرِجُ مِنۡهُ حَبّٗا مُّتَرَاكِبٗا وَمِنَ ٱلنَّخۡلِ مِن طَلۡعِهَا قِنۡوَانٞ دَانِيَةٞ وَجَنَّٰتٖ مِّنۡ أَعۡنَابٖ وَٱلزَّيۡتُونَ وَٱلرُّمَّانَ مُشۡتَبِهٗا وَغَيۡرَ مُتَشَٰبِهٍۗ ٱنظُرُوٓاْ إِلَىٰ ثَمَرِهِۦٓ إِذَآ أَثۡمَرَ وَيَنۡعِهِۦٓۚ إِنَّ فِي

រឿងទាំងនោះគឺជាភស្តុតាងៗសម្រាប់ក្រុមដែលមានជំនឿ ។

ذَٰلِكُمۡ لَأٓيَٰتٖ لِّقَوۡمٖ يُؤۡمِنُونَ ٩٩

១០០-ពួកគេបានចាត់ទុកជិនក្នុងការគោរពសក្ការៈជាដៃគូជាមួយអល់ឡោះ ខណៈដែលទ្រង់ជាអ្នកបង្កើតពួកគេនោះ ហើយពួកគេបានភូតកុហកដោយភាពល្ងង់ខ្លៅថាៈ ទ្រង់មានបុត្រា និងបុត្រី ។ ទ្រង់ពិតជាបរិសុទ្ធអំពីអ្វីដែលពួកគេពិពណ៌នានោះ ។

وَجَعَلُواْ لِلَّهِ شُرَكَآءَ ٱلۡجِنَّ وَخَلَقَهُمۡۖ وَخَرَقُواْ
لَهُۥ بَنِينَ وَبَنَٰتِۭ بِغَيۡرِ عِلۡمٖۚ سُبۡحَٰنَهُۥ وَتَعَٰلَىٰ
عَمَّا يَصِفُونَ ١٠٠

១០១-អល់ឡោះជាអ្នកបង្កើតមេឃជាច្រើនជាន់ និងផែនដី ។ តើទ្រង់មានបុត្រាយ៉ាងដូចម្ដេចទៅ បើទ្រង់គ្មានភរិយាផងនោះ? ទ្រង់បានបង្កើតអ្វីៗទាំងអស់ ហើយទ្រង់ជាអ្នកដឹងបំផុតនូវអ្វីៗទាំងអស់នោះ ។

بَدِيعُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ أَنَّىٰ يَكُونُ لَهُۥ
وَلَدٞ وَلَمۡ تَكُن لَّهُۥ صَٰحِبَةٞۖ وَخَلَقَ كُلَّ شَيۡءٖۖ
وَهُوَ بِكُلِّ شَيۡءٍ عَلِيمٞ ١٠١

១០២-(លក្ខណៈ)ទាំងនោះហើយគឺអល់ឡោះ ដែលជាម្ចាស់របស់ពួកអ្នក ។ គ្មានទេម្ចាស់ដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដ មានតែទ្រង់មួយគត់ ។ ទ្រង់ជាអ្នកបង្កើតអ្វីៗទាំងអស់ ដូច្នេះ ចូរពួកអ្នកគោរពសក្ការៈទៅចំពោះទ្រង់ចុះ ។ ហើយទ្រង់ជាអ្នកគ្រប់គ្រងអ្វីៗទាំងអស់ ។

ذَٰلِكُمُ ٱللَّهُ رَبُّكُمۡۖ لَآ إِلَٰهَ إِلَّا هُوَۖ خَٰلِقُ
كُلِّ شَيۡءٖ فَٱعۡبُدُوهُۚ وَهُوَ عَلَىٰ كُلِّ شَيۡءٖ
وَكِيلٞ ١٠٢

១០៣-គ្មានអ្នកណាម្នាក់មើលឃើញទ្រង់(នៅក្នុងលោកិយ)ឡើយ ប៉ុន្តែទ្រង់ទេដែលជាអ្នកមើលឃើញ(រាល់អ្វីៗទាំងអស់)នោះ ។ អល់ឡោះមហាទន់ភ្លន់ មហាដឹង ។

لَّا تُدۡرِكُهُ ٱلۡأَبۡصَٰرُ وَهُوَ يُدۡرِكُ ٱلۡأَبۡصَٰرَۖ
وَهُوَ ٱللَّطِيفُ ٱلۡخَبِيرُ ١٠٣

១០៤-ភស្តុតាងជាច្រើនមកពីម្ចាស់របស់ពួកអ្នកពិតជាបានមកដល់ពួកអ្នក ។ បុគ្គលណាដែលបានឃើញ(អនុវត្តតាមភស្តុតាងទាំងនេះ) គឺ(មានប្រយោជន៍)សម្រាប់ខ្លួនគេផ្ទាល់ ។ រីឯបុគ្គលណាដែលមិនមើល(មិនអនុវត្តតាម) សេចក្តីវិនាសគឺសម្រាប់ខ្លួនគេផ្ទាល់ ។ ហើយខ្ញុំ(មូហាំម៉ាត់)មិនមែនជាអ្នកទទួលខុសត្រូវលើពួកអ្នកឡើយ ។

قَدۡ جَآءَكُم بَصَآئِرُ مِن رَّبِّكُمۡۖ فَمَنۡ أَبۡصَرَ
فَلِنَفۡسِهِۦۖ وَمَنۡ عَمِيَ فَعَلَيۡهَاۚ وَمَآ أَنَا۠ عَلَيۡكُم
بِحَفِيظٖ ١٠٤

១០៥-ដូច្នោះដែរ យើងបញ្ជាក់នូវភស្តុតាងជាច្រើនទៀត ។ តែពួកគេ(ពួកមូស្រីគីន)បែរជានិយាយថាៈ អ្នក(មូហាំម៉ាត់)បានរៀន(ពីពួកយ៉ាហ៊ូទី និងណាសរ៉នី)ទេវិញ ។ ហើយយើងនឹងបកស្រាយវា(គម្ពីរគួរអាន)ដល់ក្រុមដែលចេះដឹង ។

وَكَذَٰلِكَ نُصَرِّفُ ٱلۡأٓيَٰتِ وَلِيَقُولُواْ دَرَسۡتَ
وَلِنُبَيِّنَهُۥ لِقَوۡمٖ يَعۡلَمُونَ ١٠٥

ٱتَّبِعۡ مَآ أُوحِيَ إِلَيۡكَ مِن رَّبِّكَۖ لَآ إِلَٰهَ إِلَّا هُوَۖ وَأَعۡرِضۡ عَنِ ٱلۡمُشۡرِكِينَ ﴿١٠٦﴾

១០៦-ចូរអ្នកអនុវត្តតាមនូវអ្វីដែលត្រូវបានគេបញ្ចុះវ៉ាហ៊ីមកឱ្យអ្នកអំពីម្ចាស់របស់អ្នក។ គ្មានទេម្ចាស់ដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដមានតែទ្រង់មួយគត់។ ហើយចូរអ្នកងាកចេញពីពួកមូស្ហរីគីន។

وَلَوۡ شَآءَ ٱللَّهُ مَآ أَشۡرَكُواْۗ وَمَا جَعَلۡنَٰكَ عَلَيۡهِمۡ حَفِيظٗاۖ وَمَآ أَنتَ عَلَيۡهِم بِوَكِيلٖ ﴿١٠٧﴾

១០៧-ប្រសិនបើអល់ឡោះមានចេតនា ពួកគេមិនបានធ្វើស្ហ៊ីរិកឡើយ។ ហើយយើងមិនបានចាត់តាំងអ្នកឱ្យទទួលខុសត្រូវចំពោះពួកគេឡើយ ហើយអ្នកក៏មិនមែនជាអ្នកគ្រប់គ្រងពួកគេដែរ។

وَلَا تَسُبُّواْ ٱلَّذِينَ يَدۡعُونَ مِن دُونِ ٱللَّهِ فَيَسُبُّواْ ٱللَّهَ عَدۡوَۢا بِغَيۡرِ عِلۡمٖۗ كَذَٰلِكَ زَيَّنَّا لِكُلِّ أُمَّةٍ عَمَلَهُمۡ ثُمَّ إِلَىٰ رَبِّهِم مَّرۡجِعُهُمۡ فَيُنَبِّئُهُم بِمَا كَانُواْ يَعۡمَلُونَ ﴿١٠٨﴾

១០៨-ចូរពួកអ្នក(អ្នកមូស្លីម)កុំជេរប្រមាថចំពោះព្រះដែលពួកគេបួងសួងផ្សេងពីអល់ឡោះឱ្យសោះ ព្រោះវាជាហេតុធ្វើឱ្យពួកគេជេរប្រមាថអល់ឡោះទាំងបំពានដោយគ្មានចំណេះដឹង។ ដូច្នេះដែរ យើងបានលំអសម្រាប់ប្រជាជាតិទាំងអស់នូវទង្វើរបស់ពួកគេ បន្ទាប់មកកន្លែងវិលត្រឡប់របស់ពួកគេ គឺទៅកាន់ម្ចាស់របស់ពួកគេ។ ហើយទ្រង់នឹងប្រាប់ពួកគេនូវអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត។

وَأَقۡسَمُواْ بِٱللَّهِ جَهۡدَ أَيۡمَٰنِهِمۡ لَئِن جَآءَتۡهُمۡ ءَايَةٞ لَّيُؤۡمِنُنَّ بِهَاۚ قُلۡ إِنَّمَا ٱلۡأٓيَٰتُ عِندَ ٱللَّهِۖ وَمَا يُشۡعِرُكُمۡ أَنَّهَآ إِذَا جَآءَتۡ لَا يُؤۡمِنُونَ ﴿١٠٩﴾

១០៩-ពួកគេ(ពួកដែលធ្វើស្ហ៊ីរិក)បានស្បថនឹងអល់ឡោះនូវពាក្យសម្បថយ៉ាងមោះមុតថាៈ ប្រសិនបើមុជីហ្សាត់ណាមួយបានមកដល់ពួកគេនោះ ប្រាកដជាពួកគេនឹងជឿចំពោះវា។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តាមពិតមុជីហ្សាត់ទាំងនោះគឺនៅនឹងអល់ឡោះ។ ពួកអ្នក(អ្នកមានជំនឿ)មិនដឹងទេឬថា ពិតប្រាកដណាស់ បើមុជីហ្សាត់បានមកដល់មែននោះ ក៏ពួកគេមិនជឿដែរ ។

وَنُقَلِّبُ أَفۡـِٔدَتَهُمۡ وَأَبۡصَٰرَهُمۡ كَمَا لَمۡ يُؤۡمِنُواْ بِهِۦٓ أَوَّلَ مَرَّةٖ وَنَذَرُهُمۡ فِي طُغۡيَٰنِهِمۡ يَعۡمَهُونَ ﴿١١٠﴾

១១០-ហើយយើងបានបង្វែរចិត្តគំនិត និងការមើលឃើញ(ការចង្អុលបង្ហាញ)របស់ពួកគេដូចដែលពួកគេគ្មានជំនឿនឹងវា(គម្ពីរគួរអាន)តាំងពីដំបូងមកម្ល៉េះ ហើយយើងនឹងបណ្តោយពួកគេឱ្យស្ថិតនៅក្នុងបទល្មើសរបស់ពួកគេ ខណៈដែលពួកគេកំពុងវង្វេងនោះ។

۞وَلَوۡ أَنَّنَا نَزَّلۡنَآ إِلَيۡهِمُ ٱلۡمَلَٰٓئِكَةَ وَكَلَّمَهُمُ ٱلۡمَوۡتَىٰ وَحَشَرۡنَا عَلَيۡهِمۡ كُلَّ شَيۡءٖ قُبُلٗا مَّا كَانُواْ لِيُؤۡمِنُوٓاْ إِلَّآ أَن يَشَآءَ ٱللَّهُ وَلَٰكِنَّ أَكۡثَرَهُمۡ

១១១-ទោះបីជាយើងបានបញ្ចុះម៉ាឡាអ៊ីកាត់ទៅកាន់ពួកគេ និងឱ្យមនុស្សស្លាប់និយាយទៅកាន់ពួកគេ ព្រមទាំងបានប្រមូលផ្តុំអ្វីៗទាំងអស់ដាក់នៅពីមុខពួកគេក៏ដោយ ក៏ពួកគេមិនជឿដែរ លើកលែងតែអល់ឡោះមានចេតនាប៉ុណ្ណោះ។ ប៉ុន្តែពួកគេភាគ

ច្រើនជាពួកដែលល្ងង់ខ្លៅ ។

១១២-ដូច្នេះដែរ យើងបានបង្កើតសត្រូវជាស្ហៃតនមនុស្សលោក និងជិនទៅចំពោះណាពីគ្រប់រូប ដែលពួកគេមួយចំនួនបាន ពាំនាំពាក្យសំដីផ្អែមល្ហែមទៅវិញទៅមកដោយការបោកប្រាស់ ។ ប្រសិនបើម្ចាស់របស់អ្នកមានចេតនា ពួកគេប្រាកដជាមិនធ្វើដូច្នេះឡើយ ។ ដូច្នេះ ចូរអ្នកបណ្តោយឱ្យពួកគេធ្វើអ្វីដែលពួកគេកំពុងប្រឌិតចុះ ។

១១៣- និងដើម្បីឱ្យចិត្តគំនិតរបស់ពួកដែលគ្មានជំនឿនឹងថ្ងៃបរលោកទោរទន់ទៅរកវា(ពាក្យសំដីផ្អែមល្ហែម) និងដើម្បីឱ្យពួកគេ ចូលចិត្តពាក្យសំដីនោះ ព្រមទាំងដើម្បីឱ្យពួកគេប្រព្រឹត្តនូវអ្វី (ផលអាក្រក់) ដែលពួកគេជាអ្នកប្រព្រឹត្ត ។

១១៤-ហើយតើឱ្យខ្ញុំរកអ្នកកាត់សេចក្តីផ្សេងពីអល់ឡោះឬ ខណៈដែលទ្រង់ជាអ្នកបញ្ចុះគម្ពីរយ៉ាងច្បាស់លាស់ឱ្យពួកអ្នក ហើយពួកដែលយើងបានប្រទានគម្ពីរ(តាវរ៉ត និងអ៊ិញជីល) ឱ្យពួកគេ ដោយពួកគេដឹងថា គម្ពីរនោះពិតជាត្រូវបានបញ្ចុះមកពីម្ចាស់របស់អ្នកយ៉ាងពិតប្រាកដនោះ? ដូច្នេះចូរអ្នកកុំស្ថិតក្នុងចំណោមពួកដែលមានការសង្ស័យឱ្យសោះ ។

១១៥-ពាក្យសំដីម្ចាស់របស់អ្នកបានបំពេញដោយត្រឹមត្រូវ និងយុត្តិធម៌បំផុត ។ គ្មានអ្នកណាអាចផ្លាស់ប្តូរពាក្យសំដីរបស់ទ្រង់បានឡើយ ។ ហើយទ្រង់មហាឮ មហាដឹង ។

១១៦-ហើយប្រសិនបើអ្នក(មូហាំម៉ាត់) អនុវត្តតាមមនុស្សភាគច្រើនលើលោកិយនេះ ពួកគេប្រាកដជានឹងធ្វើឱ្យអ្នកវង្វេងពីមាគ៌ារបស់អល់ឡោះជាមិនខាន ។ ពួកគេមិនធ្វើតាមអ្វីក្រៅពីការស្មាននោះទេ ហើយពួកគេក៏គ្មានអ្វីក្រៅពីការភូតកុហកដែរ ។

១១៧-ពិតប្រាកដណាស់ ម្ចាស់របស់អ្នកទ្រង់ដឹងបំផុតចំពោះអ្នកដែលវង្វេងពីមាគ៌ារបស់ទ្រង់ ហើយទ្រង់ក៏ដឹងបំផុតដែរ ចំពោះអ្នកដែលទទួលនូវការចង្អុលបង្ហាញនោះ ។

يَجۡهَلُونَ ﴿١١١﴾

وَكَذَٰلِكَ جَعَلۡنَا لِكُلِّ نَبِيٍّ عَدُوّٗا شَيَٰطِينَ
ٱلۡإِنسِ وَٱلۡجِنِّ يُوحِي بَعۡضُهُمۡ إِلَىٰ بَعۡضٖ
زُخۡرُفَ ٱلۡقَوۡلِ غُرُورٗاۚ وَلَوۡ شَآءَ رَبُّكَ مَا
فَعَلُوهُۖ فَذَرۡهُمۡ وَمَا يَفۡتَرُونَ ﴿١١٢﴾

وَلِتَصۡغَىٰٓ إِلَيۡهِ أَفۡـِٔدَةُ ٱلَّذِينَ لَا يُؤۡمِنُونَ
بِٱلۡأٓخِرَةِ وَلِيَرۡضَوۡهُ وَلِيَقۡتَرِفُواْ مَا هُم
مُّقۡتَرِفُونَ ﴿١١٣﴾

أَفَغَيۡرَ ٱللَّهِ أَبۡتَغِي حَكَمٗا وَهُوَ ٱلَّذِيٓ أَنزَلَ
إِلَيۡكُمُ ٱلۡكِتَٰبَ مُفَصَّلٗاۚ وَٱلَّذِينَ ءَاتَيۡنَٰهُمُ
ٱلۡكِتَٰبَ يَعۡلَمُونَ أَنَّهُۥ مُنَزَّلٞ مِّن رَّبِّكَ بِٱلۡحَقِّۖ
فَلَا تَكُونَنَّ مِنَ ٱلۡمُمۡتَرِينَ ﴿١١٤﴾

وَتَمَّتۡ كَلِمَتُ رَبِّكَ صِدۡقٗا وَعَدۡلٗاۚ لَّا مُبَدِّلَ
لِكَلِمَٰتِهِۦۚ وَهُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ﴿١١٥﴾

وَإِن تُطِعۡ أَكۡثَرَ مَن فِي ٱلۡأَرۡضِ يُضِلُّوكَ
عَن سَبِيلِ ٱللَّهِۚ إِن يَتَّبِعُونَ إِلَّا ٱلظَّنَّ وَإِنۡ هُمۡ
إِلَّا يَخۡرُصُونَ ﴿١١٦﴾

إِنَّ رَبَّكَ هُوَ أَعۡلَمُ مَن يَضِلُّ عَن سَبِيلِهِۦۖ
وَهُوَ أَعۡلَمُ بِٱلۡمُهۡتَدِينَ ﴿١١٧﴾

فَكُلُوا۟ مِمَّا ذُكِرَ ٱسْمُ ٱللَّهِ عَلَيْهِ إِن كُنتُم
بِـَٔايَـٰتِهِۦ مُؤْمِنِينَ ١١٨

១១៨-ចូរពួកអ្នកបរិភោគនូវអ្វី(សត្វដែលគេសំឡេះ)ដែលគេរំលឹកឈ្មោះអល់ឡោះចំពោះវាចុះ ប្រសិនបើពួកអ្នកមានជំនឿនឹងអាយ៉ាត់ៗរបស់ទ្រង់មែននោះ។

وَمَا لَكُمْ أَلَّا تَأْكُلُوا۟ مِمَّا ذُكِرَ ٱسْمُ ٱللَّهِ
عَلَيْهِ وَقَدْ فَصَّلَ لَكُم مَّا حَرَّمَ عَلَيْكُمْ إِلَّا مَا
ٱضْطُرِرْتُمْ إِلَيْهِ ۗ وَإِنَّ كَثِيرًا لَّيُضِلُّونَ
بِأَهْوَآئِهِم بِغَيْرِ عِلْمٍ ۗ إِنَّ رَبَّكَ هُوَ أَعْلَمُ
بِٱلْمُعْتَدِينَ ١١٩

១១៩-តើមូលហេតុអ្វីបានជាពួកអ្នកមិនបរិភោគនូវអ្វី(សត្វដែលគេសំឡេះ)ដែលគេរំលឹកឈ្មោះរបស់អល់ឡោះ ខណៈដែលទ្រង់ពិតជាបានបកស្រាយប្រាប់ពួកអ្នកនូវអ្វីដែលទ្រង់បានហាមឃាត់ចំពោះពួកអ្នក លើកលែងតែពួកអ្នកចាំបាច់បរិភោគវា(ដោយបង្ខំចិត្ត)នោះ? ហើយពិតប្រាកដណាស់ មនុស្សភាគច្រើនធ្វើឱ្យអ្នកដទៃវង្វេងតាមចំណង់របស់ពួកគេដោយគ្មានចំណេះដឹង។ពិតប្រាកដណាស់ ម្ចាស់របស់អ្នក ទ្រង់ដឹងបំផុតចំពោះពួកដែលបំពាន។

وَذَرُوا۟ ظَـٰهِرَ ٱلْإِثْمِ وَبَاطِنَهُۥٓ ۚ إِنَّ ٱلَّذِينَ
يَكْسِبُونَ ٱلْإِثْمَ سَيُجْزَوْنَ بِمَا كَانُوا۟
يَقْتَرِفُونَ ١٢٠

១២០-ចូរពួកអ្នកបោះបង់ចោលបាបកម្មទាំងចំហនិងអាថិ-កំបាំងចុះ។ ពិតប្រាកដណាស់ ពួកដែលប្រព្រឹត្តបាបកម្មនោះ ពួកគេនឹងត្រូវគេតបស្នងនូវអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត។

وَلَا تَأْكُلُوا۟ مِمَّا لَمْ يُذْكَرِ ٱسْمُ ٱللَّهِ عَلَيْهِ
وَإِنَّهُۥ لَفِسْقٌ ۗ وَإِنَّ ٱلشَّيَـٰطِينَ لَيُوحُونَ إِلَىٰٓ
أَوْلِيَآئِهِمْ لِيُجَـٰدِلُوكُمْ ۖ وَإِنْ أَطَعْتُمُوهُمْ
إِنَّكُمْ لَمُشْرِكُونَ ١٢١

១២១-ហើយចូរពួកអ្នកកុំបរិភោគនូវអ្វី(សត្វសំឡេះ)ដែលគេមិនរំលឹកឈ្មោះអល់ឡោះចំពោះវាឱ្យសោះ ព្រោះវាពិតជាធ្វើឱ្យប្រាសចាកពីការប្រតិបត្តិតាមអល់ឡោះ។ ពិតប្រាកដណាស់ ស្ហៃតនកំពុងញុះញង់អ្នកគាំពាររបស់ពួកវា ដើម្បីឱ្យពួកគេឈ្លោះប្រកែកជាមួយពួកអ្នក។ ប្រសិនបើពួកអ្នកគោរពតាមពួកគេនោះ ពួកអ្នកពិតជាក្លាយជាពួកមូស្ហរីគីនជាមិនខាន។

أَوَمَن كَانَ مَيْتًا فَأَحْيَيْنَـٰهُ وَجَعَلْنَا لَهُۥ نُورًا
يَمْشِى بِهِۦ فِى ٱلنَّاسِ كَمَن مَّثَلُهُۥ فِى
ٱلظُّلُمَـٰتِ لَيْسَ بِخَارِجٍ مِّنْهَا ۚ كَذَٰلِكَ زُيِّنَ
لِلْكَـٰفِرِينَ مَا كَانُوا۟ يَعْمَلُونَ ١٢٢

១២២-តើបុគ្គលដែលបានស្លាប់(ស្លាប់ដួងចិត្ត) រួចយើងបានធ្វើឱ្យ(ចិត្ត)គេរស់ឡើងវិញ ហើយយើងបានបង្កើតពន្លឺមួយ(ជំនឿ) សម្រាប់គេ ដើម្បីឱ្យគេដើរ(ចូលរួម)ក្នុងចំណោមមនុស្សដទៃទៀត ដូចគ្នានឹងបុគ្គលដែលស្ថិតក្នុងភាពងងឹត(វង្វេង គ្មានជំនឿ) ដែលបុគ្គលនោះមិនអាចចាកចេញពីវាបានដែរឬទេ? ដូច្នេះដែរគេបានលំអសម្រាប់ពួកដែលគ្មានជំនឿនូវអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត។

وَكَذَٰلِكَ جَعَلْنَا فِى كُلِّ قَرْيَةٍ أَكَـٰبِرَ
مُجْرِمِيهَا لِيَمْكُرُوا۟ فِيهَا ۖ وَمَا يَمْكُرُونَ

១២៣-ហើយដូច្នេះដែរ យើងបានបង្កើតមេដឹកនាំរបស់ពួកដែលប្រព្រឹត្តអំពើអាក្រក់នៅគ្រប់តំបន់ ដើម្បីប្រើល្បិចក្នុងនោះ

إِلَّا بِأَنفُسِهِمۡ وَمَا يَشۡعُرُونَ ١٢٣

(រារាំងអ្នកដទៃក្នុងការចូលសាសនាអ៊ីស្លាម)។ ហើយពួកគេគ្មានប្រើល្បិចកលណាក្រៅពីការបោកប្រាស់លើខ្លួនឯងនោះឡើយ តែពួកគេមិនដឹងខ្លួន។

وَإِذَا جَآءَتۡهُمۡ ءَايَةٞ قَالُواْ لَن نُّؤۡمِنَ حَتَّىٰ نُؤۡتَىٰ
مِثۡلَ مَآ أُوتِيَ رُسُلُ ٱللَّهِۘ ٱللَّهُ أَعۡلَمُ حَيۡثُ
يَجۡعَلُ رِسَالَتَهُۥۗ سَيُصِيبُ ٱلَّذِينَ أَجۡرَمُواْ
صَغَارٌ عِندَ ٱللَّهِ وَعَذَابٞ شَدِيدُۢ بِمَا كَانُواْ
يَمۡكُرُونَ ١٢٤

១២៤-ហើយនៅពេលដែលភស្តុតាង(គម្ពីរគួរអាន)បានមកដល់ពួកគេ ពួកគេបាននិយាយថាៈ ពួកយើងមិនជឿឡើយ លុះត្រាតែគេផ្តល់ឱ្យពួកយើងដូចអ្វីដែលគេបានផ្តល់ឱ្យបណ្តាអ្នកនាំសាររបស់អល់ឡោះ។ (អល់ឡោះមានបន្ទូលតបវិញថា) អល់ឡោះដឹងបំផុតចំពោះអ្នកណាដែលទ្រង់នឹងផ្តល់សាររបស់ទ្រង់។ ទ្រង់នឹងធ្វើឱ្យពួកដែលប្រព្រឹត្តបាបកម្មមានភាពទន់ខ្សោយចំពោះអល់ឡោះ និងទទួលទារុណកម្មយ៉ាងធ្ងន់ធ្ងរដោយសារតែអ្វីដែលពួកគេធ្លាប់បានប្រើល្បិច។

فَمَن يُرِدِ ٱللَّهُ أَن يَهۡدِيَهُۥ يَشۡرَحۡ صَدۡرَهُۥ
لِلۡإِسۡلَٰمِۖ وَمَن يُرِدۡ أَن يُضِلَّهُۥ يَجۡعَلۡ صَدۡرَهُۥ
ضَيِّقًا حَرَجٗا كَأَنَّمَا يَصَّعَّدُ فِي ٱلسَّمَآءِۚ
كَذَٰلِكَ يَجۡعَلُ ٱللَّهُ ٱلرِّجۡسَ عَلَى
ٱلَّذِينَ لَا يُؤۡمِنُونَ ١٢٥

១២៥-ដូច្នេះអ្នកណាដែលអល់ឡោះមានបំណងចង្អុលបង្ហាញដល់គេ គឺទ្រង់ធ្វើឱ្យដើមទ្រូងរបស់គេមានភាពទូលំទូលាយដើម្បីទៅរកសាសនាអ៊ីស្លាម។ តែអ្នកណាដែលទ្រង់មានបំណងឱ្យគេវង្វេងវិញ គឺទ្រង់ធ្វើឱ្យចិត្តរបស់គេមានភាពចង្អៀតចង្អល់លំបាកវាហាក់ដូចជាគេកំពុងឡើងទៅលើមេឃ។ ដូច្នេះដែរ អល់ឡោះធ្វើទារុណកម្មចំពោះពួកដែលគ្មានជំនឿ។

وَهَٰذَا صِرَٰطُ رَبِّكَ مُسۡتَقِيمٗاۗ قَدۡ فَصَّلۡنَا
ٱلۡأٓيَٰتِ لِقَوۡمٖ يَذَّكَّرُونَ ١٢٦

១២៦-នេះហើយ(គម្ពីរគួរអាន និងច្បាប់អ៊ីស្លាម)ជាមាគ៌ានៃម្ចាស់របស់អ្នកដ៏ត្រឹមត្រូវ។ ជាការពិតណាស់ យើងបានបញ្ជាក់នូវភស្តុតាងជាច្រើនដល់ក្រុមដែលយកចិត្តទុកដាក់។

۞لَهُمۡ دَارُ ٱلسَّلَٰمِ عِندَ رَبِّهِمۡۖ وَهُوَ وَلِيُّهُم
بِمَا كَانُواْ يَعۡمَلُونَ ١٢٧

១២៧-ពួកគេនឹងទទួលបានលំនៅដ្ឋានដែលមានសន្តិភាព(ឋានសួគ៌)ពីម្ចាស់របស់ពួកគេ។ ហើយទ្រង់ជាអ្នកគាំពារពួកគេដោយសារតែអ្វីដែលពួកគេធ្លាប់បានសាង។

وَيَوۡمَ يَحۡشُرُهُمۡ جَمِيعٗا يَٰمَعۡشَرَ ٱلۡجِنِّ قَدِ
ٱسۡتَكۡثَرۡتُم مِّنَ ٱلۡإِنسِۖ وَقَالَ أَوۡلِيَآؤُهُم مِّنَ
ٱلۡإِنسِ رَبَّنَا ٱسۡتَمۡتَعَ بَعۡضُنَا بِبَعۡضٖ وَبَلَغۡنَآ

១២៨-ហើយនៅថ្ងៃដែលអល់ឡោះប្រមូលផ្តុំពួកគេទាំងអស់គ្នា(ទ្រង់មានបន្ទូលថា) ឱក្រុមជិន! ជាការពិតណាស់ ពួកអ្នកបានធ្វើឱ្យមនុស្សលោកជាច្រើនវង្វេង។ ហើយមិត្តភក្តិរបស់ពួកគេអំពីមនុស្សលោកបាននិយាយថាៈ ឱម្ចាស់របស់ពួកយើង! យើងបានទទួលផលប្រយោជន៍ពីគ្នាទៅវិញទៅមក ហើយពួកយើងបានដល់

ពេលវេលាដែលទ្រង់បានកំណត់ឱ្យពួកយើងហើយ ។ អល់ឡោះបានមានបន្ទូលថា: ឋាននរកគឺជាកន្លែងដែលពួកអ្នករស់នៅជាអមតៈ លើកលែងតែអ្វីដែលអល់ឡោះមានចេតនាប៉ុណ្ណោះ ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកមហាគតិបណ្ឌិត មហាដឹង ។

១២៩-ដូច្នេះដែរ យើងធ្វើឱ្យពួកដែលបំពានដឹកនាំគ្នាទៅវិញទៅមកដោយសារតែអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត ។

១៣០-ឱបណ្តាក្រុមជិននិងមនុស្សលោក! តើបណ្តាអ្នកនាំសារក្នុងចំណោមពួកអ្នកមិនបានមកដល់ពួកអ្នក ហើយពួកគេមិននិទានរឿងប្រាប់ពួកអ្នកនូវភស្តុតាងទាំងឡាយរបស់យើង ព្រមទាំងដាស់តឿនព្រមានពួកអ្នកអំពីការជួបនៅថ្ងៃនេះ(បរលោក)ទេឬ? ពួកគេបានតបថា: យើងបានធ្វើសាក្សីលើខ្លួនយើងផ្ទាល់ ។ ហើយការរស់នៅក្នុងលោកិយបានបោកបញ្ឆោតពួកគេ ព្រមទាំងពួកគេបានធ្វើសាក្សីលើខ្លួនឯងថា: ពិតប្រាកដណាស់ ពួកគេធ្លាប់ប្រឆាំងមែន ។

១៣១-នោះគឺដោយសារតែម្ចាស់របស់អ្នកមិនបានបំផ្លាញភូមិស្រុកដោយបំពាន ខណៈដែលប្រជាជនភូមិស្រុកនោះមិនបានដឹង ។

១៣២-ហើយគ្រប់ៗរូប(ជិននិងមនុស្ស)នឹងទទួលបានលំដាប់ថ្នាក់(ឋានសួគ៌ ឬឋាននរក) ទៅតាមអ្វីដែលពួកគេបានប្រព្រឹត្ត ។ អល់ឡោះមិនធ្វេសប្រហែសនូវអ្វីដែលពួកគេប្រព្រឹត្តឡើយ ។

១៣៣-ហើយម្ចាស់របស់អ្នក(មូហាំម៉ាត់)គឺជាអ្នកដែលមានលើសលុបនិងជាអ្នកមានសេចក្តីករុណា ។ ប្រសិនបើទ្រង់មានចេតនា ទ្រង់ពិតជានឹងបំផ្លាញពួកអ្នក ហើយទ្រង់នឹងជំនួសដោយក្រុមផ្សេងបន្ទាប់ពីពួកអ្នកតាមអ្វីដែលទ្រង់មានចេតនា ដូចដែលទ្រង់បានបង្កើតពួកអ្នកចេញពីពូជអំបូរនៃក្រុមផ្សេងៗ(មុនពួកអ្នក)ដែរ ។

១៣៤-ពិតប្រាកដណាស់ អ្វីដែលគេសន្យានឹងពួកអ្នកគឺពិតជាមកដល់ ។ ហើយពួកអ្នកមិនអាចគេចផុត(ពីទារុណកម្មរបស់អល់ឡោះ)បានឡើយ ។

أَجَلَنَا ٱلَّذِىٓ أَجَّلۡتَ لَنَاۚ قَالَ ٱلنَّارُ مَثۡوَىٰكُمۡ
خَٰلِدِينَ فِيهَآ إِلَّا مَا شَآءَ ٱللَّهُۗ إِنَّ رَبَّكَ
حَكِيمٌ عَلِيمٞ ١٢٨
وَكَذَٰلِكَ نُوَلِّي بَعۡضَ ٱلظَّٰلِمِينَ بَعۡضَۢا بِمَا
كَانُواْ يَكۡسِبُونَ ١٢٩
يَٰمَعۡشَرَ ٱلۡجِنِّ وَٱلۡإِنسِ أَلَمۡ يَأۡتِكُمۡ رُسُلٞ
مِّنكُمۡ يَقُصُّونَ عَلَيۡكُمۡ ءَايَٰتِي وَيُنذِرُونَكُمۡ
لِقَآءَ يَوۡمِكُمۡ هَٰذَاۚ قَالُواْ شَهِدۡنَا عَلَىٰٓ
أَنفُسِنَاۖ وَغَرَّتۡهُمُ ٱلۡحَيَوٰةُ ٱلدُّنۡيَا وَشَهِدُواْ
عَلَىٰٓ أَنفُسِهِمۡ أَنَّهُمۡ كَانُواْ كَٰفِرِينَ ١٣٠
ذَٰلِكَ أَن لَّمۡ يَكُن رَّبُّكَ مُهۡلِكَ ٱلۡقُرَىٰ
بِظُلۡمٖ وَأَهۡلُهَا غَٰفِلُونَ ١٣١
وَلِكُلّٖ دَرَجَٰتٞ مِّمَّا عَمِلُواْۚ وَمَا رَبُّكَ
بِغَٰفِلٍ عَمَّا يَعۡمَلُونَ ١٣٢
وَرَبُّكَ ٱلۡغَنِيُّ ذُو ٱلرَّحۡمَةِۚ إِن يَشَأۡ
يُذۡهِبۡكُمۡ وَيَسۡتَخۡلِفۡ مِنۢ بَعۡدِكُم مَّا
يَشَآءُ كَمَآ أَنشَأَكُم مِّن ذُرِّيَّةِ قَوۡمٍ
ءَاخَرِينَ ١٣٣
إِنَّ مَا تُوعَدُونَ لَأٓتٖۖ وَمَآ أَنتُم
بِمُعۡجِزِينَ ١٣٤

قُلۡ يَٰقَوۡمِ ٱعۡمَلُواْ عَلَىٰ مَكَانَتِكُمۡ إِنِّي
عَامِلٞۖ فَسَوۡفَ تَعۡلَمُونَ مَن تَكُونُ
لَهُۥ عَٰقِبَةُ ٱلدَّارِۚ إِنَّهُۥ لَا يُفۡلِحُ
ٱلظَّٰلِمُونَ ١٣٥

១៣៥-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកប្រតិបត្តិតាមមាគ៌ារបស់ពួកអ្នកចុះ។ ពិតប្រាកដណាស់ ខ្ញុំក៏ប្រតិបត្តិតាមមាគ៌ារបស់ខ្ញុំដែរ។ ហើយពួកអ្នកគង់តែនឹងដឹងអ្នកណា(ខ្ញុំឬពួកអ្នក)ដែលទទួលបានជោគជ័យនៅថ្ងៃបរលោកនោះ។ ពិតប្រាកដណាស់ ពួកដែលបំពានគឺគ្មានជ័យជំនះឡើយ។

وَجَعَلُواْ لِلَّهِ مِمَّا ذَرَأَ مِنَ ٱلۡحَرۡثِ وَٱلۡأَنۡعَٰمِ
نَصِيبٗا فَقَالُواْ هَٰذَا لِلَّهِ بِزَعۡمِهِمۡ وَهَٰذَا
لِشُرَكَآئِنَاۖ فَمَا كَانَ لِشُرَكَآئِهِمۡ فَلَا
يَصِلُ إِلَى ٱللَّهِۖ وَمَا كَانَ لِلَّهِ فَهُوَ
يَصِلُ إِلَىٰ شُرَكَآئِهِمۡۗ سَآءَ مَا
يَحۡكُمُونَ ١٣٦

១៣៦-ហើយពួកគេ(ពួកមូស្ហរីគីន)បានរំលែកមួយចំណែកសម្រាប់អល់ឡោះអំពីអ្វីដែលទ្រង់បានបង្កើតនៃផលានុផលដែលបានមកពីការដាំដុះ និងសត្វពាហនៈ ហើយពួកគេបាននិយាយដោយការប៉ាន់ស្មានរបស់ពួកគេថាៈ នេះសម្រាប់អល់ឡោះ ហើយនេះគឺសម្រាប់ព្រះរបស់ពួកយើង។ ហើយអ្វីដែលសម្រាប់ព្រះរបស់ពួកគេគឺវាមិនទៅដល់អល់ឡោះឡើយ តែអ្វីដែលសម្រាប់អល់ឡោះនោះគឺទៅដល់ព្រះរបស់ពួកគេ។ អ្វីដែលពួកគេកាត់សេចក្ដីនោះគឺអាក្រក់បំផុត។

وَكَذَٰلِكَ زَيَّنَ لِكَثِيرٖ مِّنَ
ٱلۡمُشۡرِكِينَ قَتۡلَ أَوۡلَٰدِهِمۡ شُرَكَآؤُهُمۡ
لِيُرۡدُوهُمۡ وَلِيَلۡبِسُواْ عَلَيۡهِمۡ دِينَهُمۡۖ وَلَوۡ شَآءَ
ٱللَّهُ مَا فَعَلُوهُۖ فَذَرۡهُمۡ وَمَا يَفۡتَرُونَ ١٣٧

១៣៧-ដូច្នេះដែរ ស្ហៃតនបានលំអដល់ពួកមូស្ហរីគីនជាច្រើនក្នុងការសម្លាប់កូនចៅរបស់ពួកគេ ដើម្បីពួកគេ(ស្ហៃតន)បំផ្លាញពួកទាំងនោះ និងដើម្បីបំភាន់ពួកគេនូវសាសនារបស់ពួកគេ។ ហើយប្រសិនបើអល់ឡោះមានចេតនា គឺពួកគេមិនធ្វើកិច្ចការនោះឡើយ។ ដូច្នេះ ចូរអ្នកបណ្ដោយពួកគេ និងអ្វីដែលពួកគេប្រឌិតនោះចុះ។

وَقَالُواْ هَٰذِهِۦٓ أَنۡعَٰمٞ وَحَرۡثٌ حِجۡرٞ لَّا
يَطۡعَمُهَآ إِلَّا مَن نَّشَآءُ بِزَعۡمِهِمۡ وَأَنۡعَٰمٌ
حُرِّمَتۡ ظُهُورُهَا وَأَنۡعَٰمٞ لَّا يَذۡكُرُونَ ٱسۡمَ
ٱللَّهِ عَلَيۡهَا ٱفۡتِرَآءً عَلَيۡهِۚ سَيَجۡزِيهِم بِمَا
كَانُواْ يَفۡتَرُونَ ١٣٨

១៣៨-ពួកគេបាននិយាយដោយការប៉ាន់ស្មានថាៈ សត្វពាហនៈ និងផលានុផលទាំងនេះត្រូវបានគេហាមឃាត់មិនឱ្យបរិភោគវាឡើយ លើកលែងតែបុគ្គលណាដែលពួកយើងអនុញ្ញាតប៉ុណ្ណោះ។ ហើយសត្វពាហនៈនេះដែរ ត្រូវបានគេហាមឃាត់ខ្នងរបស់វា(ក្នុងការជិះនិងដឹកជញ្ជូន) ព្រមទាំងសត្វពាហនៈដែលពួកគេមិនរំលឹកឈ្មោះអល់ឡោះចំពោះវា។ (ពួកគេធ្វើដូច្នោះ)គឺដើម្បីមួលបង្កាច់ទៅលើអល់ឡោះ។ ទ្រង់នឹងតបស្នងចំពោះពួកគេនូវអ្វីដែលពួកគេបានមួលបង្កាច់នោះ។

وَقَالُواْ مَا فِي بُطُونِ هَٰذِهِ ٱلۡأَنۡعَٰمِ خَالِصَةٞ

១៣៩-ហើយពួកគេបាននិយាយបន្ថែមទៀតថាៈ អ្វីដែលនៅក្នុងពោះសត្វពាហនៈនេះ គឺសម្រាប់តែបុរសៗរបស់ពួកយើងប៉ុណ្ណោះ

لِّذُكُورِنَا وَمُحَرَّمٌ عَلَىٰٓ أَزۡوَٰجِنَاۖ وَإِن يَكُن
مَّيۡتَةٗ فَهُمۡ فِيهِ شُرَكَآءُۚ سَيَجۡزِيهِمۡ
وَصۡفَهُمۡۚ إِنَّهُۥ حَكِيمٌ عَلِيمٞ ١٣٩
قَدۡ خَسِرَ ٱلَّذِينَ قَتَلُوٓاْ أَوۡلَٰدَهُمۡ سَفَهَۢا بِغَيۡرِ
عِلۡمٖ وَحَرَّمُواْ مَا رَزَقَهُمُ ٱللَّهُ ٱفۡتِرَآءً عَلَى ٱللَّهِۚ
قَدۡ ضَلُّواْ وَمَا كَانُواْ مُهۡتَدِينَ ١٤٠

۞ وَهُوَ ٱلَّذِيٓ أَنشَأَ جَنَّٰتٖ مَّعۡرُوشَٰتٖ وَغَيۡرَ
مَعۡرُوشَٰتٖ وَٱلنَّخۡلَ وَٱلزَّرۡعَ مُخۡتَلِفًا أُكُلُهُۥ
وَٱلزَّيۡتُونَ وَٱلرُّمَّانَ مُتَشَٰبِهٗا وَغَيۡرَ
مُتَشَٰبِهٖۚ كُلُواْ مِن ثَمَرِهِۦٓ إِذَآ أَثۡمَرَ وَءَاتُواْ
حَقَّهُۥ يَوۡمَ حَصَادِهِۦۖ وَلَا تُسۡرِفُوٓاْۚ
إِنَّهُۥ لَا يُحِبُّ ٱلۡمُسۡرِفِينَ ١٤١
وَمِنَ ٱلۡأَنۡعَٰمِ حَمُولَةٗ وَفَرۡشٗاۚ كُلُواْ مِمَّا
رَزَقَكُمُ ٱللَّهُ وَلَا تَتَّبِعُواْ خُطُوَٰتِ ٱلشَّيۡطَٰنِۚ
إِنَّهُۥ لَكُمۡ عَدُوّٞ مُّبِينٞ ١٤٢

ثَمَٰنِيَةَ أَزۡوَٰجٖۖ مِّنَ ٱلضَّأۡنِ ٱثۡنَيۡنِ وَمِنَ
ٱلۡمَعۡزِ ٱثۡنَيۡنِۗ قُلۡ ءَآلذَّكَرَيۡنِ حَرَّمَ أَمِ

ហើយត្រូវហាមឃាត់ទៅលើស្ត្រីៗរបស់ពួកយើង។ ប៉ុន្តែបើវាកើតមកហើយស្លាប់ គឺពួកគេមានចំណែកស្មើគ្នានៅក្នុងការបរិភោគវា។ អល់ឡោះនឹងដាក់ទណ្ឌកម្មពួកគេចំពោះការដាក់ច្បាប់របស់ពួកគេបែបនេះ។ ពិតប្រាកដណាស់ ទ្រង់មហាគតិបណ្ឌិត មហាដឹង។

១៤០-ពួកដែលបានសម្លាប់កូនរបស់ពួកគេដោយភាពល្ងង់ខ្លៅអវិជ្ជាពិតជាបានខាតបង់។ ហើយពួកគេបានហាមឃាត់(ខ្លួនឯង) នូវអ្វីដែលអល់ឡោះបានប្រទានលាភសក្ការៈដល់ពួកគេដើម្បីមួលបង្កាច់ចំពោះអល់ឡោះ។ ជាការពិតណាស់ ពួកគេបានវង្វេង ហើយពួកគេមិនមែនជាពួកដែលទទួលបានការចង្អុលបង្ហាញឡើយ។

១៤១-ហើយទ្រង់ជាអ្នកដែលបានបង្កើតច្បារដំណាំជាច្រើនដែលដុះឡើងទ្រើង និងមិនឡើងទ្រើង និងដើមល្មើ ព្រមទាំងដំណាំផ្សេងៗទៀតដែលមានរសជាតិប្លែកៗពីគ្នាក្នុងការបរិភោគ ហើយផ្លែអូលីវ និងផ្លែទទឹមស្រដៀងគ្នា និងមានខ្លះទៀតមិនដូចគ្នាឡើយ (រូបរាង និងរសជាតិ)។ ចូរពួកអ្នកបរិភោគផលានុផលរបស់វានៅពេលដែលវាឱ្យផលនិងបរិច្ចាគហ្សាកាត់របស់វានៅថ្ងៃប្រមូលផលវាចុះ។ ហើយពួកអ្នកមិនត្រូវខ្ជះខ្ជាយឡើយ ពិតប្រាកដណាស់ អល់ឡោះមិនស្រឡាញ់ពួកដែលខ្ជះខ្ជាយឡើយ។

១៤២-ហើយសត្វពាហនៈមួយចំនួនអាចដឹកជញ្ជូនបាន(ដូចជាសត្វអូដ្ឋជាដើម) និងមួយចំនួនទៀតមិនអាចដឹកជញ្ជូនបានទេ(ដូចជាពពែ ចៀម)។ ចូរពួកអ្នកបរិភោគអំពីអ្វីដែលអល់ឡោះបានប្រទានលាភសក្ការៈមកឱ្យពួកអ្នកចុះ។ ហើយចូរពួកអ្នកកុំតាមមាគ៌ារបស់ស្ហៃតនឱ្យសោះ។ ពិតប្រាកដណាស់ វាគឺជាសត្រូវយ៉ាងពិតប្រាកដចំពោះពួកអ្នក។

១៤៣-សត្វពាហនៈប្រាំបីគូ[១] ក្នុងនោះមានសត្វចៀមមួយគូ និងសត្វពពែមួយគូ(ញីនិងឈ្មោល)។ ចូរអ្នក(មូហាំម៉ាត់)សួរថា: តើឈ្មោលទាំងពីរ ឬញីទាំងពីរ ឬកូនដែលនៅក្នុងផ្ទៃរបស់វាទាំង

---

១-ប្រាំបីប្រភេទ ដែលមានសត្វអូដ្ឋពីរប្រភេទ ឈ្មោលនិងញី សត្វគោពីរប្រភេទ ឈ្មោលនិងញី សត្វពពែពីរប្រភេទ ឈ្មោលនិងញី សត្វចៀមពីរប្រភេទ ឈ្មោលនិងញី។

ٱلۡأُنثَيَيۡنِ أَمَّا ٱشۡتَمَلَتۡ عَلَيۡهِ أَرۡحَامُ ٱلۡأُنثَيَيۡنِۖ
نَبِّـُٔونِي بِعِلۡمٍ إِن كُنتُمۡ صَٰدِقِينَ ١٤٣

ពីរឬ ដែលអល់ឡោះបានហាមឃាត់នោះ? ចូរពួកអ្នកប្រាប់ខ្ញុំតាមការចេះដឹងមក ប្រសិនបើពួកអ្នកជាអ្នកសច្ចៈមែននោះ។

وَمِنَ ٱلۡإِبِلِ ٱثۡنَيۡنِ وَمِنَ ٱلۡبَقَرِ ٱثۡنَيۡنِۗ قُلۡ
ءَآلذَّكَرَيۡنِ حَرَّمَ أَمِ ٱلۡأُنثَيَيۡنِ أَمَّا ٱشۡتَمَلَتۡ
عَلَيۡهِ أَرۡحَامُ ٱلۡأُنثَيَيۡنِۖ أَمۡ كُنتُمۡ شُهَدَآءَ
إِذۡ وَصَّىٰكُمُ ٱللَّهُ بِهَٰذَاۚ فَمَنۡ أَظۡلَمُ مِمَّنِ
ٱفۡتَرَىٰ عَلَى ٱللَّهِ كَذِبٗا لِّيُضِلَّ ٱلنَّاسَ
بِغَيۡرِ عِلۡمٍۗ إِنَّ ٱللَّهَ لَا يَهۡدِي ٱلۡقَوۡمَ
ٱلظَّٰلِمِينَ ١٤٤

១៤៤-ហើយក្នុងនោះមានសត្វអូដ្ឋមួយគូ និងសត្វគោមួយគូ (ញី និងឈ្មោល)។ ចូរអ្នក(មូហាំម៉ាត់)សួរថាៈ តើឈ្មោលទាំងពីរ ឬញីទាំងពីរ ឬកូនដែលនៅក្នុងផ្ទៃរបស់ញីទាំងពីរឬ ដែលអល់ឡោះបានហាមឃាត់នោះ? ឬពួកអ្នកជាសាក្សីនៅពេលដែលអល់ឡោះបានហាមឃាត់វានោះ? ដូច្នេះ តើអ្នកណាដែលអយុត្តិធម៌ជាងអ្នកដែលមួលបង្កាច់ទៅលើអល់ឡោះដោយការភូតកុហកដើម្បីធ្វើឱ្យមនុស្សវង្វេងដោយគ្មានចំណេះដឹងនោះ? ពិតប្រាកដណាស់ អល់ឡោះមិនចង្អុលបង្ហាញដល់ក្រុមដែលអយុត្តិធម៌ឡើយ។

قُل لَّآ أَجِدُ فِي مَآ أُوحِيَ إِلَيَّ مُحَرَّمًا عَلَىٰ
طَاعِمٖ يَطۡعَمُهُۥٓ إِلَّآ أَن يَكُونَ مَيۡتَةً أَوۡ دَمٗا
مَّسۡفُوحًا أَوۡ لَحۡمَ خِنزِيرٖ فَإِنَّهُۥ رِجۡسٌ أَوۡ
فِسۡقًا أُهِلَّ لِغَيۡرِ ٱللَّهِ بِهِۦۚ فَمَنِ ٱضۡطُرَّ غَيۡرَ
بَاغٖ وَلَا عَادٖ فَإِنَّ رَبَّكَ غَفُورٞ رَّحِيمٞ ١٤٥

១៤៥-ចូរអ្នក(មូហាំម៉ាត់)ពោលថា : ខ្ញុំមិនដែលជួបប្រទះនៅក្នុងអ្វីដែលអល់ឡោះបានផ្តល់វ៉ាហ៊ីឱ្យខ្ញុំនូវការបម្រាមទៅលើអ្នកដែលចង់បរិភោគវា(សត្វដែលពួកអ្នកហាមឃាត់)នោះទេ លើកលែងតែវាក្លាយជាសត្វស្លាប់(ដោយពុំបានសំឡេះតាមច្បាប់អ៊ីស្លាម) ឬឈាមដែលហូរ ឬសាច់ជ្រូក ពីព្រោះវាជារបស់កខ្វក់ ឬជារបស់ដែលមិនស្របច្បាប់ដែលត្រូវបានគេសំឡេះវាដោយរំលឹកនាមផ្សេងពីអល់ឡោះ។ ប៉ុន្តែបើបុគ្គលណាត្រូវបានបង្ខំចិត្ត(ក្នុងការទទួលទាន) ដោយគ្មានលើសពីតម្រូវការចាំបាច់ និងមិនរំលោភបំពានទេនោះ គឺពិតប្រាកដណាស់ម្ចាស់របស់អ្នកមហាអភ័យទោស មហាអាណិតស្រឡាញ់។

وَعَلَى ٱلَّذِينَ هَادُواْ حَرَّمۡنَا كُلَّ
ذِي ظُفُرٖۖ وَمِنَ ٱلۡبَقَرِ وَٱلۡغَنَمِ حَرَّمۡنَا
عَلَيۡهِمۡ شُحُومَهُمَآ إِلَّا مَا حَمَلَتۡ ظُهُورُهُمَآ
أَوِ ٱلۡحَوَايَآ أَوۡ مَا ٱخۡتَلَطَ بِعَظۡمٖۚ ذَٰلِكَ
جَزَيۡنَٰهُم بِبَغۡيِهِمۡۖ وَإِنَّا لَصَٰدِقُونَ ١٤٦

១៤៦-ហើយចំពោះពួកយ៉ាហ៊ូទី យើងបានហាមឃាត់(ការបរិភោគ)រាល់សត្វដែលមានក្រចកជាប់គ្នា។ ហើយចំពោះគោ ឬពពែ យើងបានហាមឃាត់ទៅលើពួកគេនូវការបរិភោគខ្លាញ់របស់វា លើកលែងតែខ្លាញ់ដែលជាប់នៅនឹងឆ្អឹងខ្នងរបស់វា ឬពោះវៀន ឬខ្លាញ់ដែលជាប់នឹងឆ្អឹងទាំងឡាយប៉ុណ្ណោះ។ ទាំងនោះគឺយើងបានតបស្នងចំពោះពួកគេដោយការបំពានរបស់ពួកគេ។ ហើយពិតប្រាកដណាស់ យើងគឺជាអ្នកដែលប្រកាន់សច្ចធម៌។

فَإِن كَذَّبُوكَ فَقُل رَّبُّكُمْ ذُو رَحْمَةٍ وَٰسِعَةٍ وَلَا يُرَدُّ بَأْسُهُۥ عَنِ ٱلْقَوْمِ ٱلْمُجْرِمِينَ ﴿١٤٧﴾

១៤៧-តែប្រសិនបើពួកគេបានបដិសេធនឹងអ្នក( មូហាំម៉ាត់) ចូរអ្នកប្រាប់ទៅពួកគេថាៈ ម្ចាស់របស់ពួកអ្នកមានក្តីមេត្តាករុណាទូលំទូលាយបំផុត ហើយគ្មានអ្នកណាអាចច្រានទារុណកម្មរបស់ទ្រង់ចេញពីពួកដែលប្រព្រឹត្តអំពើអាក្រក់បានឡើយ ។

سَيَقُولُ ٱلَّذِينَ أَشْرَكُوا۟ لَوْ شَآءَ ٱللَّهُ مَآ أَشْرَكْنَا وَلَآ ءَابَآؤُنَا وَلَا حَرَّمْنَا مِن شَىْءٍ ۚ كَذَٰلِكَ كَذَّبَ ٱلَّذِينَ مِن قَبْلِهِمْ حَتَّىٰ ذَاقُوا۟ بَأْسَنَا ۗ قُلْ هَلْ عِندَكُم مِّنْ عِلْمٍ فَتُخْرِجُوهُ لَنَآ ۖ إِن تَتَّبِعُونَ إِلَّا ٱلظَّنَّ وَإِنْ أَنتُمْ إِلَّا تَخْرُصُونَ ﴿١٤٨﴾

១៤៨-ពួកដែលបានធ្វើស្ហ៊ីរិកនឹងនិយាយថាៈ ប្រសិនបើអល់ឡោះមានចេតនា ពួកយើងនិងជីដូនជីតារបស់ពួកយើងមិនបានធ្វើស្ហ៊ីរិកឡើយ ហើយពួកយើងក៏មិនបម្រាម( លើខ្លួនឯង) នូវប្រការណាមួយដែរ ។ ដូច្នោះដែរ ពួកដែលពីមុនពួកគេក៏បានបដិសេធ( នឹងអ្នកនាំសាររបស់ពួកគេ) ដែរ រហូតទាល់តែពួកគេបានភ្លក្សទារុណកម្មរបស់យើង ។ ចូរអ្នក( មូហាំម៉ាត់) សួរពួកគេថាៈ តើពួកអ្នកមានការចេះដឹងដែរឬទេ ចូរពួកអ្នកបង្ហាញវាដល់យើងមក? ពួកអ្នកមិនតាមអ្វីក្រៅតែពីការស្មានឡើយ ហើយពួកអ្នកក៏គ្មានអ្វីក្រៅពីការភូតកុហកដែរ ។

قُلْ فَلِلَّهِ ٱلْحُجَّةُ ٱلْبَٰلِغَةُ ۖ فَلَوْ شَآءَ لَهَدَىٰكُمْ أَجْمَعِينَ ﴿١٤٩﴾

១៤៩-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ អល់ឡោះមានភស្តុតាងយ៉ាងច្បាស់លាស់ ។ ហើយប្រសិនបើទ្រង់មានចេតនា ទ្រង់ប្រាកដជាចង្អុលបង្ហាញដល់ពួកអ្នកទាំងអស់គ្នាជាមិនខាន ។

قُلْ هَلُمَّ شُهَدَآءَكُمُ ٱلَّذِينَ يَشْهَدُونَ أَنَّ ٱللَّهَ حَرَّمَ هَٰذَا ۖ فَإِن شَهِدُوا۟ فَلَا تَشْهَدْ مَعَهُمْ ۚ وَلَا تَتَّبِعْ أَهْوَآءَ ٱلَّذِينَ كَذَّبُوا۟ بِـَٔايَٰتِنَا وَٱلَّذِينَ لَا يُؤْمِنُونَ بِٱلْءَاخِرَةِ وَهُم بِرَبِّهِمْ يَعْدِلُونَ ﴿١٥٠﴾

១៥០-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ចូរពួកអ្នកនាំមកនូវសាក្សីទាំងឡាយរបស់ពួកអ្នក ដែលពួកគេធ្វើសាក្សីថា ពិតប្រាកដណាស់ អល់ឡោះបានហាមឃាត់របស់ទាំងនេះ ។ ហើយប្រសិនបើពួកគេបានធ្វើសាក្សី( កុហក) ចូរអ្នកកុំធ្វើសាក្សីជាមួយពួកគេ ។ ហើយចូរអ្នកកុំអនុវត្តតាមទំនើងចិត្តរបស់ពួកដែលបានបដិសេធនឹងបណ្តាភស្តុតាងរបស់យើង និងពួកដែលមិនជឿថ្ងៃបរលោក ហើយពួកគេជាពួកដែលធ្វើស្ហ៊ីរិកនឹងម្ចាស់របស់ពួកគេឱ្យសោះ ។

۞ قُلْ تَعَالَوْا۟ أَتْلُ مَا حَرَّمَ رَبُّكُمْ عَلَيْكُمْ ۖ أَلَّا تُشْرِكُوا۟ بِهِۦ شَيْـًٔا ۖ وَبِٱلْوَٰلِدَيْنِ إِحْسَٰنًا ۖ وَلَا تَقْتُلُوٓا۟ أَوْلَٰدَكُم مِّنْ إِمْلَٰقٍ ۖ نَّحْنُ نَرْزُقُكُمْ وَإِيَّاهُمْ ۖ وَلَا تَقْرَبُوا۟ ٱلْفَوَٰحِشَ

១៥១-ចូរអ្នកពោលថាៈ សូមពួកអ្នកមកទីនេះ ខ្ញុំនឹងសូត្រឱ្យពួកអ្នកស្តាប់នូវអ្វីដែលម្ចាស់របស់ពួកអ្នកបានហាមឃាត់ពួកអ្នកថាៈ ចូរពួកអ្នកកុំធ្វើស្ហ៊ីរិកចំពោះទ្រង់ឱ្យសោះ ហើយត្រូវធ្វើល្អជាមួយឪពុកម្តាយ ។ ហើយពួកអ្នកមិនត្រូវសម្លាប់កូនចៅរបស់ពួកអ្នកដោយសារភាពក្រខ្សត់នោះឡើយ ។ យើងជាអ្នកផ្តល់លាភសក្ការៈ

مَا ظَهَرَ مِنْهَا وَمَا بَطَنَ ۖ وَلَا تَقْتُلُوا۟
ٱلنَّفْسَ ٱلَّتِى حَرَّمَ ٱللَّهُ إِلَّا بِٱلْحَقِّ ۚ ذَٰلِكُمْ
وَصَّىٰكُم بِهِۦ لَعَلَّكُمْ تَعْقِلُونَ ﴿١٥١﴾

وَلَا تَقْرَبُوا۟ مَالَ ٱلْيَتِيمِ إِلَّا بِٱلَّتِى هِىَ أَحْسَنُ
حَتَّىٰ يَبْلُغَ أَشُدَّهُۥ ۖ وَأَوْفُوا۟ ٱلْكَيْلَ وَٱلْمِيزَانَ
بِٱلْقِسْطِ ۖ لَا نُكَلِّفُ نَفْسًا إِلَّا وُسْعَهَا ۖ وَإِذَا
قُلْتُمْ فَٱعْدِلُوا۟ وَلَوْ كَانَ ذَا قُرْبَىٰ ۖ وَبِعَهْدِ
ٱللَّهِ أَوْفُوا۟ ۚ ذَٰلِكُمْ وَصَّىٰكُم بِهِۦ لَعَلَّكُمْ
تَذَكَّرُونَ ﴿١٥٢﴾

وَأَنَّ هَٰذَا صِرَٰطِى مُسْتَقِيمًا فَٱتَّبِعُوهُ ۖ وَلَا
تَتَّبِعُوا۟ ٱلسُّبُلَ فَتَفَرَّقَ بِكُمْ عَن سَبِيلِهِۦ ۚ
ذَٰلِكُمْ وَصَّىٰكُم بِهِۦ لَعَلَّكُمْ تَتَّقُونَ ﴿١٥٣﴾

ثُمَّ ءَاتَيْنَا مُوسَى ٱلْكِتَٰبَ تَمَامًا عَلَى ٱلَّذِىٓ
أَحْسَنَ وَتَفْصِيلًا لِّكُلِّ شَىْءٍ وَهُدًى وَرَحْمَةً
لَّعَلَّهُم بِلِقَآءِ رَبِّهِمْ يُؤْمِنُونَ ﴿١٥٤﴾

وَهَٰذَا كِتَٰبٌ أَنزَلْنَٰهُ مُبَارَكٌ فَٱتَّبِعُوهُ وَٱتَّقُوا۟
لَعَلَّكُمْ تُرْحَمُونَ ﴿١٥٥﴾

أَن تَقُولُوٓا۟ إِنَّمَآ أُنزِلَ ٱلْكِتَٰبُ عَلَىٰ

ដល់ពួកអ្នក និងពួកគេ(កូនចៅ) ។ ហើយចូរពួកអ្នកកុំបៀតបៀនអំពើអាក្រក់(ហ្ស៊ីណា) ទោះបីដោយចំហ ឬដោយលាក់លៀមក៏ដោយ ។ ហើយចូរពួកអ្នកកុំសម្លាប់មនុស្សដែលអល់ឡោះបានហាមឃាត់ឱ្យសោះ លើកលែងតែមានមូលហេតុត្រឹមត្រូវ(តាមច្បាប់អ៊ិស្លាម) ។ ទាំងនោះទ្រង់បានផ្ដែផ្ដាំវាចំពោះពួកអ្នក សង្ឃឹមថា ពួកអ្នកគិតពិចារណា ។

១៥២-ហើយចូរពួកអ្នកកុំបៀតបៀនទ្រព្យសម្បត្តិកូនកំព្រា លើកលែងតែតាមវិធីដែលមានប្រយោជន៍រហូតដល់គេពេញវ័យ ។ ហើយចូរពួកអ្នកបំពេញរង្វាល់ និងការថ្លឹងប្រកបដោយយុត្តិធម៌ ។ យើងមិនដាក់បន្ទុកបុគ្គលណាម្នាក់ឱ្យហួសពីសមត្ថភាពរបស់គេឡើយ ។ ហើយនៅពេលដែលពួកអ្នកនិយាយស្ដី ចូរប្រកាន់ខ្ជាប់នូវភាពយុត្តិធម៌ សូម្បីតែទាក់ទងនឹងសាច់សាលោហិតក៏ដោយ ។ ហើយចូរពួកអ្នកបំពេញកិច្ចសន្យារបស់អល់ឡោះ ។ ទាំងនេះទ្រង់បានផ្ដែផ្ដាំវាចំពោះពួកអ្នក សង្ឃឹមថាពួកអ្នកនឹងចងចាំ ។

១៥៣-ហើយពិតប្រាកដណាស់នេះជាមាគ៌ារបស់យើងដ៏ត្រឹមត្រូវ ដូច្នេះចូរពួកអ្នកប្រតិបត្តិតាមវា ។ ហើយចូរពួកអ្នកកុំប្រតិបត្តិតាមផ្លូវនានា(ផ្លូវវង្វេង) ព្រោះវានឹងបំបែកពួកអ្នកចេញពីមាគ៌ាដ៏ត្រឹមត្រូវរបស់ទ្រង់ ។ ទាំងនេះទ្រង់បានផ្ដែផ្ដាំវាចំពោះពួកអ្នក ដើម្បីឱ្យពួកអ្នកកោតខ្លាចអល់ឡោះ ។

១៥៤-ក្រោយមកយើងបានប្រទានគម្ពីរ(តាវ៉រ៉ត)ឱ្យមូសា ដើម្បីបំពេញ(នៀកម៉ាត់) និងអធិប្បាយនូវរាល់កិច្ចការយ៉ាងច្បាស់លាស់ និងជាការចង្អុលបង្ហាញ ហើយនិងជាក្ដីមេត្ដាករុណាសម្រាប់អ្នកដែលសាងអំពើល្អ សង្ឃឹមថាពួកគេមានជំនឿនឹងការជួបម្ចាស់របស់ពួកគេ(ថ្ងៃបរលោក) ។

១៥៥-នេះជាគម្ពីរ(គួរអាន)ដ៏ពិសិដ្ឋដែលយើងបានបញ្ចុះវា(ឱ្យមូហាំម៉ាត់) ដូច្នេះចូរពួកអ្នកប្រតិបត្តិតាមវា និងកោតខ្លាចអល់ឡោះចុះ សង្ឃឹមថាពួកអ្នកនឹងត្រូវគេអាណិតស្រឡាញ់ ។

១៥៦-ដើម្បីកុំឱ្យពួកអ្នក(ពួកមូស្ហរីគីន)និយាយថា: ពិត

طَآئِفَتَيۡنِ مِن قَبۡلِنَا وَإِن كُنَّا عَن دِرَاسَتِهِمۡ لَغَٰفِلِينَ ﴿١٥٦﴾

ប្រាកដណាស់ គម្ពីរត្រូវបានគេ(អល់ឡោះ)បញ្ចុះឱ្យតែមនុស្សពីរក្រុម(យ៉ាហ៊ូទី និងណាសរ៉នី)មុនពួកយើងប៉ុណ្ណោះ។ ហើយពួកយើងពិតជាមិនចេះអំពីការសូត្រគម្ពីររបស់ពួកគេឡើយ។

أَوۡ تَقُولُواْ لَوۡ أَنَّآ أُنزِلَ عَلَيۡنَا ٱلۡكِتَٰبُ لَكُنَّآ أَهۡدَىٰ مِنۡهُمۡۚ فَقَدۡ جَآءَكُم بَيِّنَةٞ مِّن رَّبِّكُمۡ وَهُدٗى وَرَحۡمَةٞۚ فَمَنۡ أَظۡلَمُ مِمَّن كَذَّبَ بِـَٔايَٰتِ ٱللَّهِ وَصَدَفَ عَنۡهَاۗ سَنَجۡزِي ٱلَّذِينَ يَصۡدِفُونَ عَنۡ ءَايَٰتِنَا سُوٓءَ ٱلۡعَذَابِ بِمَا كَانُواْ يَصۡدِفُونَ ﴿١٥٧﴾

១៥៧-ឬដើម្បីកុំឱ្យពួកអ្នកនិយាយថាៈ ប្រសិនបើគេបានបញ្ចុះគម្ពីរមកឱ្យពួកយើង ប្រាកដជាពួកយើងទទួលបានការចង្អុលបង្ហាញជាងពួកគេ(ពួកយ៉ាហ៊ូទី និងណាសរ៉នី)។ ហើយជាការពិតណាស់ភស្តុតាងដ៏ជាក់ច្បាស់និងការចង្អុលបង្ហាញ ហើយនិងការអាណិតស្រឡាញ់ពីម្ចាស់របស់ពួកអ្នកបានមកដល់ពួកអ្នក។ ដូច្នេះតើអ្នកណាដែលអយុត្តិធម៌ជាងអ្នកដែលបានបដិសេធនឹងបណ្តាភស្តុតាងរបស់អល់ឡោះ និងបែរចេញពីវានោះ? យើងនឹងតបស្នងចំពោះពួកដែលបែរចេញពីបណ្តាភស្តុតាងរបស់យើងនោះនូវទារុណកម្មដ៏អាក្រក់ ដោយសារតែការបែរចេញរបស់ពួកគេ។

هَلۡ يَنظُرُونَ إِلَّآ أَن تَأۡتِيَهُمُ ٱلۡمَلَٰٓئِكَةُ أَوۡ يَأۡتِيَ رَبُّكَ أَوۡ يَأۡتِيَ بَعۡضُ ءَايَٰتِ رَبِّكَۗ يَوۡمَ يَأۡتِي بَعۡضُ ءَايَٰتِ رَبِّكَ لَا يَنفَعُ نَفۡسًا إِيمَٰنُهَا لَمۡ تَكُنۡ ءَامَنَتۡ مِن قَبۡلُ أَوۡ كَسَبَتۡ فِيٓ إِيمَٰنِهَا خَيۡرٗاۗ قُلِ ٱنتَظِرُوٓاْ إِنَّا مُنتَظِرُونَ ﴿١٥٨﴾

១៥៨-ពួកគេ(ពួកប្រឆាំង)គ្មានរង់ចាំអ្វីក្រៅពីម៉ាឡាអ៊ីកាត់មកដល់ពួកគេ(ដើម្បីយកជីវិត)ឬម្ចាស់របស់អ្នកនឹងមកដល់(ដើម្បីកាត់ក្តី) ឬសញ្ញា(ថ្ងៃបរលោក)មួយចំនួននៃម្ចាស់របស់អ្នកនឹងមកដល់នោះឡើយ។ នៅថ្ងៃដែលសញ្ញាមួយចំនួននៃម្ចាស់របស់អ្នកមកដល់ ពេលនោះជំនឿរបស់បុគ្គលម្នាក់ៗគ្មានប្រយោជន៍ដល់គេឡើយ ប្រសិនបើគេគ្មានជំនឿពីមុនមក ឬមិនបានសាងអំពើល្អនៅក្នុងពេលដែលគេមានជំនឿនោះ។ ចូរអ្នកពោលថាៈ ចូរពួកអ្នករង់ចាំ(ថ្ងៃបរលោក)ចុះ! ពិតប្រាកដណាស់ ពួកយើងក៏ជាអ្នករង់ចាំដែរ។

إِنَّ ٱلَّذِينَ فَرَّقُواْ دِينَهُمۡ وَكَانُواْ شِيَعٗا لَّسۡتَ مِنۡهُمۡ فِي شَيۡءٍۚ إِنَّمَآ أَمۡرُهُمۡ إِلَى ٱللَّهِ ثُمَّ يُنَبِّئُهُم بِمَا كَانُواْ يَفۡعَلُونَ ﴿١٥٩﴾

១៥៩-ពិតប្រាកដណាស់ ពួកដែលបានបំបែកសាសនារបស់ពួកគេ ដែលធ្វើឱ្យពួកគេក្លាយជាក្រុមៗនោះ អ្នក(មូហាំម៉ាត់)គ្មានការពាក់ព័ន្ធនឹងពួកគេបន្តិចសោះឡើយ។ ពិតប្រាកដណាស់កិច្ចការរបស់ពួកគេត្រូវប្រគល់ទៅចំពោះអល់ឡោះ បន្ទាប់មកទ្រង់នឹងប្រាប់ពួកគេនូវអ្វីដែលពួកគេបានប្រព្រឹត្ត។

مَن جَآءَ بِٱلۡحَسَنَةِ فَلَهُۥ عَشۡرُ أَمۡثَالِهَاۖ وَمَن جَآءَ بِٱلسَّيِّئَةِ فَلَا يُجۡزَىٰٓ إِلَّا مِثۡلَهَا وَهُمۡ لَا يُظۡلَمُونَ ﴿١٦٠﴾

១៦០-អ្នកណាដែលបាននាំទៅជាមួយនូវអំពើល្អមួយ(នៅថ្ងៃបរលោក) គេនឹងទទួលបានផលបុណ្យដប់ដងដូចនឹងអំពើល្អរបស់គេ។ រីឯអ្នកណាដែលបាននាំទៅជាមួយនូវអំពើអាក្រក់មួយវិញ

نوس គេនឹងមិនត្រូវបានតបស្នងក្រៅពីអំពើអាក្រក់ដូចគ្នានោះឡើយ ។ ហើយពួកគេមិនត្រូវគេបំពានឡើយ ។

១៦១-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំបានចង្អុលបង្ហាញខ្ញុំទៅកាន់មាគ៌ាដ៏ត្រឹមត្រូវជាសាសនាដ៏ពិត ដែលជាសាសនារបស់អ៊ីព្រហ៊ីមដ៏ជ្រះស្អាត ។ ហើយគាត់ពុំមែនស្ថិតនៅក្នុងចំណោមពួកមូស្ហរីគីនឡើយ ។

قُلۡ إِنَّنِي هَدَىٰنِي رَبِّيٓ إِلَىٰ صِرَٰطٖ مُّسۡتَقِيمٖ دِينٗا قِيَمٗا مِّلَّةَ إِبۡرَٰهِيمَ حَنِيفٗاۚ وَمَا كَانَ مِنَ ٱلۡمُشۡرِكِينَ ١٦١

១៦២-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពិតប្រាកដណាស់ ការសឡាតរបស់ខ្ញុំ និងការបូជាសត្វរបស់ខ្ញុំ និងការរស់នៅរបស់ខ្ញុំ ហើយនិងសេចក្តីស្លាប់របស់ខ្ញុំ គឺសម្រាប់អល់ឡោះដែលជាម្ចាស់គ្រប់គ្រងពិភពទាំងអស់ ។

قُلۡ إِنَّ صَلَاتِي وَنُسُكِي وَمَحۡيَايَ وَمَمَاتِي لِلَّهِ رَبِّ ٱلۡعَٰلَمِينَ ١٦٢

១៦៣-ទ្រង់គ្មានដៃគូឡើយ ។ ហើយដោយសារប្រការទាំងនោះខ្ញុំត្រូវបានគេ(អល់ឡោះ)ដាក់បទបញ្ជា ។ ហើយខ្ញុំគឺជាអ្នកកាន់សាសនាអ៊ីស្លាមមុនគេបង្អស់ ។

لَا شَرِيكَ لَهُۥۖ وَبِذَٰلِكَ أُمِرۡتُ وَأَنَا۠ أَوَّلُ ٱلۡمُسۡلِمِينَ ١٦٣

១៦៤-ចូរអ្នកពោលថាៈ តើឱ្យខ្ញុំយកម្ចាស់ផ្សេងក្រៅពីអល់ឡោះ ដោយទ្រង់ជាម្ចាស់គ្រប់គ្រងអ្វីៗទាំងអស់ឬ? ហើយបុគ្គលគ្រប់រូបមិនសាងអំពើអាក្រក់ក្រៅពី(ផលអាក្រក់នោះ)ធ្លាក់ទៅលើខ្លួនគេនោះឡើយ ។ ហើយអ្នកដែលប្រព្រឹត្តអំពើអាក្រក់មិនអាចទទួលបន្ទុកអំពើបាបរបស់អ្នកដទៃបានឡើយ ។ បន្ទាប់មកចំពោះម្ចាស់របស់ពួកអ្នកគឺជាកន្លែងវិលត្រឡប់របស់ពួកអ្នក ហើយទ្រង់នឹងប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកធ្លាប់ខ្វែងគំនិតគ្នា ។

قُلۡ أَغَيۡرَ ٱللَّهِ أَبۡغِي رَبّٗا وَهُوَ رَبُّ كُلِّ شَيۡءٖۚ وَلَا تَكۡسِبُ كُلُّ نَفۡسٍ إِلَّا عَلَيۡهَاۚ وَلَا تَزِرُ وَازِرَةٞ وِزۡرَ أُخۡرَىٰۚ ثُمَّ إِلَىٰ رَبِّكُم مَّرۡجِعُكُمۡ فَيُنَبِّئُكُم بِمَا كُنتُمۡ فِيهِ تَخۡتَلِفُونَ ١٦٤

១៦៥-ហើយទ្រង់ជាអ្នកដែលបានបង្កើតពួកអ្នកឱ្យធ្វើជាអ្នកគ្រប់គ្រងផែនដី(ពីជំនាន់មួយទៅជំនាន់មួយ) ហើយទ្រង់បានលើកឋានៈពួកអ្នកមួយចំនួនឱ្យលើសពីគ្នា ដើម្បីទ្រង់នឹងសាកល្បងពួកអ្នកចំពោះអ្វីដែលទ្រង់បានប្រទានឱ្យពួកអ្នក ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នករហ័សបំផុតក្នុងការដាក់ទណ្ឌកម្ម ហើយពិតប្រាកដណាស់ ទ្រង់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَهُوَ ٱلَّذِي جَعَلَكُمۡ خَلَٰٓئِفَ ٱلۡأَرۡضِ وَرَفَعَ بَعۡضَكُمۡ فَوۡقَ بَعۡضٖ دَرَجَٰتٖ لِّيَبۡلُوَكُمۡ فِي مَآ ءَاتَىٰكُمۡۗ إِنَّ رَبَّكَ سَرِيعُ ٱلۡعِقَابِ وَإِنَّهُۥ لَغَفُورٞ رَّحِيمُۢ ١٦٥

## ជំពូកអាល់អាក់រ៉ហ្វ

## سورة الأعراف

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់។

الٓمٓصٓ ۝١

១-អាលីហ្វ ឡាម មីម សទ។

كِتَٰبٌ أُنزِلَ إِلَيۡكَ فَلَا يَكُن فِي صَدۡرِكَ حَرَجٞ مِّنۡهُ لِتُنذِرَ بِهِۦ وَذِكۡرَىٰ لِلۡمُؤۡمِنِينَ ۝٢

២-នេះគឺជាគម្ពីរ(គួរអាន)ដែលត្រូវបានគេបញ្ចុះទៅឱ្យអ្នក ហេតុនេះចូរអ្នកកុំមានការចង្អៀតចង្អល់ក្នុងទ្រូងរបស់អ្នកអំពីវា ដើម្បីឱ្យអ្នកដាស់តឿនព្រមាន(ដល់អ្នកប្រឆាំង)តាមរយៈវា និងជាការរំលឹកចំពោះបណ្ដាអ្នកដែលមានជំនឿ។

ٱتَّبِعُواْ مَآ أُنزِلَ إِلَيۡكُم مِّن رَّبِّكُمۡ وَلَا تَتَّبِعُواْ مِن دُونِهِۦٓ أَوۡلِيَآءَۗ قَلِيلٗا مَّا تَذَكَّرُونَ ۝٣

៣-ចូរពួកអ្នកប្រតិបត្តិតាមនូវអ្វីដែលគេបានបញ្ចុះឱ្យពួកអ្នកពីម្ចាស់របស់ពួកអ្នកចុះ។ ហើយចូរពួកអ្នកកុំប្រតិបត្តិតាមមេដឹកនាំក្រៅពីទ្រង់ឱ្យសោះ។ អ្វីដែលពួកអ្នកចងចាំគឺតិចតួចបំផុត។

وَكَم مِّن قَرۡيَةٍ أَهۡلَكۡنَٰهَا فَجَآءَهَا بَأۡسُنَا بَيَٰتًا أَوۡ هُمۡ قَآئِلُونَ ۝٤

៤-ហើយមានភូមិស្រុកជាច្រើនដែលយើងបានបំផ្លាញវា(ដោយសារការប្រឆាំងនឹងអ្នកនាំសារ) ហើយទណ្ឌកម្មរបស់យើងបានមកដល់វា(ក្នុងភូមិស្រុកភ្លាមៗ) ខណៈដែលពួកគេដេកលក់នៅពេលយប់ ឬពួកគេសម្រាកនៅពេលថ្ងៃ។

فَمَا كَانَ دَعۡوَىٰهُمۡ إِذۡ جَآءَهُم بَأۡسُنَآ إِلَّآ أَن قَالُوٓاْ إِنَّا كُنَّا ظَٰلِمِينَ ۝٥

៥-ហើយគ្មានអ្វីដែលពួកគេត្រូវនិយាយនោះទេ នៅពេលដែលទណ្ឌកម្មរបស់យើងបានទៅដល់ពួកគេ ផ្ទុយទៅវិញពួកគេបាននិយាយថាៈ ពិតប្រាកដណាស់ ពួកយើងជាអ្នកដែលបានបំពាន។

فَلَنَسۡـَٔلَنَّ ٱلَّذِينَ أُرۡسِلَ إِلَيۡهِمۡ وَلَنَسۡـَٔلَنَّ ٱلۡمُرۡسَلِينَ ۝٦

៦-ហើយយើងប្រាកដជានឹងសួរពួកដែលគេបានបញ្ជូនអ្នកនាំសារជាច្រើនទៅកាន់ពួកគេ ហើយយើងក៏ពិតជានឹងសួរបណ្ដាអ្នកនាំសារទាំងនោះដែរ។

فَلَنَقُصَّنَّ عَلَيۡهِم بِعِلۡمٖۖ وَمَا كُنَّا غَآئِبِينَ ۝٧

៧-ហើយយើងប្រាកដជានឹងរៀបរាប់ប្រាប់ពួកគេ(នូវអ្វីដែលពួកគេបានសាង)ដោយការដឹង(របស់យើង) ហើយយើងពុំមែនជាអ្នកអវត្តមាន(នៅឆ្ងាយពីពួកគេ)ឡើយ។

وَٱلۡوَزۡنُ يَوۡمَئِذٍ ٱلۡحَقُّۚ فَمَن ثَقُلَتۡ مَوَٰزِينُهُۥ فَأُوْلَٰٓئِكَ هُمُ ٱلۡمُفۡلِحُونَ ۝٨

៨-ការថ្លឹង(ទង្វើរបស់មនុស្ស)នាថ្ងៃបរលោក គឺយុត្តិធម៌បំផុត។ ដូច្នេះអ្នកណាដែលអំពើល្អរបស់គេមានទម្ងន់ធ្ងន់ អ្នកទាំងនោះគឺជាអ្នកដែលជោគជ័យ។

وَمَنۡ خَفَّتۡ مَوَٰزِينُهُۥ فَأُوْلَٰٓئِكَ ٱلَّذِينَ خَسِرُوٓاْ

៩-ចំណែកឯអ្នកណាដែលអំពើល្អរបស់គេមានទម្ងន់ស្រាល ពួកទាំងនោះគឺជាពួកដែលខាតបង់ខ្លួនឯង ដោយសារតែពួកគេបាន

أَنفُسَهُم بِمَا كَانُواْ بِـَٔايَـٰتِنَا يَظۡلِمُونَ ٩

បំពានលើអាយ៉ាត់ៗរបស់យើង។

وَلَقَدۡ مَكَّنَّـٰكُمۡ فِي ٱلۡأَرۡضِ وَجَعَلۡنَا لَكُمۡ فِيهَا مَعَـٰيِشَۗ قَلِيلٗا مَّا تَشۡكُرُونَ ١٠

១០-ហើយពិតប្រាកដណាស់ យើងបានបង្កើតទីកន្លែងសម្រាប់ពួកអ្នកនៅលើផែនដី ហើយយើងបានរៀបចំការរស់នៅសម្រាប់ពួកអ្នកនៅលើវា។ អ្វីដែលពួកអ្នកដឹងគុណគឺតិចតួចបំផុត។

وَلَقَدۡ خَلَقۡنَـٰكُمۡ ثُمَّ صَوَّرۡنَـٰكُمۡ ثُمَّ قُلۡنَا لِلۡمَلَـٰٓئِكَةِ ٱسۡجُدُواْ لِأٓدَمَ فَسَجَدُوٓاْ إِلَّآ إِبۡلِيسَ لَمۡ يَكُن مِّنَ ٱلسَّـٰجِدِينَ ١١

១១-ហើយជាការពិតណាស់ យើងបានបង្កើតពួកអ្នក(បិតារបស់ពួកអ្នកអាដាំ) បន្ទាប់មកយើងធ្វើឱ្យពួកអ្នកមានរូបរាង(ជាមនុស្សលោក)។ ក្រោយមកទៀតយើងបានបញ្ជាទៅពួកម៉ាឡាអ៊ីកាត់ថាៈ "ចូរពួកអ្នកស៊ូជូតចំពោះអាដាំ" ពួកគេក៏បានស៊ូជូតទាំងអស់គ្នា លើកលែងតែអ៊ីព្លីសប៉ុណ្ណោះដែលវាមិនស្ថិតក្នុងចំណោមបណ្តាអ្នកដែលស៊ូជូត។

قَالَ مَا مَنَعَكَ أَلَّا تَسۡجُدَ إِذۡ أَمَرۡتُكَۖ قَالَ أَنَا۠ خَيۡرٞ مِّنۡهُ خَلَقۡتَنِي مِن نَّارٖ وَخَلَقۡتَهُۥ مِن طِينٖ ١٢

១២-អល់ឡោះបានមានបន្ទូលថាៈ តើអ្វីដែលបានរារាំងឯងមិនឱ្យស៊ូជូតនៅពេលដែលយើងបានបញ្ជាឯង? អ៊ីព្លីសឆ្លើយថាៈ ខ្ញុំល្អប្រសើរជាងវា(អាដាំ)ដែលទ្រង់បានបង្កើតខ្ញុំពីភ្លើង ហើយទ្រង់បានបង្កើតវាពីដី។

قَالَ فَٱهۡبِطۡ مِنۡهَا فَمَا يَكُونُ لَكَ أَن تَتَكَبَّرَ فِيهَا فَٱخۡرُجۡ إِنَّكَ مِنَ ٱلصَّـٰغِرِينَ ١٣

១៣-អល់ឡោះបានមានបន្ទូលទៀតថាៈ ចូរឯងចុះចេញពីឋានសួគ៌ភ្លាម! មិនសក្តិសមទេចំពោះឯងដែលក្អេងក្អាងនៅទីនេះ។ ដូច្នេះចូរឯងចេញភ្លាម! ពិតប្រាកដណាស់ ឯងស្ថិតក្នុងចំណោមពួកដែលទាបថោកបំផុត។

قَالَ أَنظِرۡنِيٓ إِلَىٰ يَوۡمِ يُبۡعَثُونَ ١٤

១៤-អ៊ីព្លីសបានតបថាៈ សូមទ្រង់មេត្តាទុកពេលឱ្យខ្ញុំរហូតដល់ថ្ងៃដែលពួកគេ(មនុស្ស)ត្រូវបានគេធ្វើឱ្យរស់ឡើងវិញផង(ថ្ងៃបរលោក)។

قَالَ إِنَّكَ مِنَ ٱلۡمُنظَرِينَ ١٥

១៥-ទ្រង់បានមានបន្ទូលថាៈ ពិតប្រាកដណាស់ ឯងស្ថិតក្នុងចំណោមពួកដែលត្រូវគេពន្យារពេល(រហូតដល់ថ្ងៃបរលោក)។

قَالَ فَبِمَآ أَغۡوَيۡتَنِي لَأَقۡعُدَنَّ لَهُمۡ صِرَٰطَكَ ٱلۡمُسۡتَقِيمَ ١٦

១៦-អ៊ីព្លីសបានតបថាៈ ដោយសារតែទ្រង់បានធ្វើឱ្យខ្ញុំវង្វេង ខ្ញុំប្រាកដជានឹងអូសទាញពួកគេ(កូនចៅអាដាំ)ចេញពីមាគ៌ារបស់ទ្រង់ដ៏ត្រឹមត្រូវជាមិនខាន។

ثُمَّ لَأٓتِيَنَّهُم مِّنۢ بَيۡنِ أَيۡدِيهِمۡ وَمِنۡ خَلۡفِهِمۡ

១៧-ក្រោយមកខ្ញុំ(អ៊ីព្លីស)ប្រាកដជានឹងទៅរំខានពួកគេ(កូន

وَعَنۡ أَيۡمَـٰنِهِمۡ وَعَن شَمَآئِلِهِمۡۖ وَلَا تَجِدُ
أَكۡثَرَهُمۡ شَـٰكِرِينَ ﴿١٧﴾

ចៅអាដាំគ្រប់ទិសទី) ទាំងខាងមុខ និងខាងក្រោយទាំងខាងស្តាំ និងខាងឆ្វេងពួកគេ ។ ហើយទ្រង់នឹងមិនជួបប្រទះពួកគេភាគច្រើនជាអ្នកដឹងគុណនោះឡើយ ។

قَالَ ٱخۡرُجۡ مِنۡهَا مَذۡءُومًا مَّدۡحُورًاۖ لَّمَن
تَبِعَكَ مِنۡهُمۡ لَأَمۡلَأَنَّ جَهَنَّمَ مِنكُمۡ
أَجۡمَعِينَ ﴿١٨﴾

១៨-ទ្រង់បានមានបន្ទូលទៀតថា: ចូរឯងចាកចេញពីទីនេះ (ឋានសួគ៌) ដោយត្រូវគេស្អប់ខ្ពើម និងនិរទេស ។ ជាការពិតណាស់ អ្នកណាហើយដែលបានតាមឯងក្នុងចំណោមពួកគេ គឺយើងប្រាកដជានឹងបំពេញនរកជើហាន់ណាំក្នុងចំណោមពួកអ្នកឯងទាំងអស់គ្នាជាមិនខាន ។

وَيَـٰٓـَٔادَمُ ٱسۡكُنۡ أَنتَ وَزَوۡجُكَ ٱلۡجَنَّةَ فَكُلَا
مِنۡ حَيۡثُ شِئۡتُمَا وَلَا تَقۡرَبَا هَـٰذِهِ ٱلشَّجَرَةَ
فَتَكُونَا مِنَ ٱلظَّـٰلِمِينَ ﴿١٩﴾

១៩-ឱអាដាំ! ចូរអ្នកនិងភរិយារបស់អ្នកស្នាក់នៅក្នុងឋានសួគ៌នេះចុះ ហើយចូរអ្នកទាំងពីរទទួលទានអំពីអ្វីដែលអ្នកទាំងពីរត្រូវការ ។ តែអ្នកទាំងពីរកុំទៅជិតដើមឈើមួយនេះឱ្យសោះ ព្រោះវានឹងធ្វើឱ្យអ្នកទាំងពីរស្ថិតក្នុងចំណោមពួកដែលបំពាន ។

فَوَسۡوَسَ لَهُمَا ٱلشَّيۡطَـٰنُ لِيُبۡدِيَ لَهُمَا
مَا وُۥرِيَ عَنۡهُمَا مِن سَوۡءَٰتِهِمَا وَقَالَ
مَا نَهَىٰكُمَا رَبُّكُمَا عَنۡ هَـٰذِهِ ٱلشَّجَرَةِ إِلَّآ أَن
تَكُونَا مَلَكَيۡنِ أَوۡ تَكُونَا مِنَ ٱلۡخَـٰلِدِينَ ﴿٢٠﴾

២០-ហើយស្ហៃតននបានញុះញង់គេទាំងពីរ ដើម្បីលាតត្រដាងពីភាពអាក្រាតរបស់គេទាំងពីរ ដែលគេ(អល់ឡោះ)បានបិទបាំងអំពីគេទាំងពីរ ហើយវា(ស្ហៃតន)បាននិយាយថា: ម្ចាស់របស់អ្នកទាំងពីរមិនបានហាមឃាត់អ្នកទាំងពីរអំពីដើមឈើនេះក្រៅពីខ្លាចអ្នកទាំងពីរក្លាយជាម៉ាឡាអ៊ីកាត់ ឬខ្លាចអ្នកទាំងពីរស្ថិតក្នុងចំណោមអ្នកដែលមានជីវិតអមតៈ(ក្នុងឋានសួគ៌)នោះឡើយ ។

وَقَاسَمَهُمَآ إِنِّي لَكُمَا لَمِنَ
ٱلنَّـٰصِحِينَ ﴿٢١﴾

២១-ហើយស្ហៃតនបានស្បថចំពោះគេទាំងពីរថា: ការពិតខ្ញុំស្ថិតក្នុងចំណោមពួកដែលផ្តល់យោបល់ដល់អ្នកទាំងពីរ ។

فَدَلَّىٰهُمَا بِغُرُورٖۚ فَلَمَّا ذَاقَا ٱلشَّجَرَةَ بَدَتۡ
لَهُمَا سَوۡءَٰتُهُمَا وَطَفِقَا يَخۡصِفَانِ عَلَيۡهِمَا مِن
وَرَقِ ٱلۡجَنَّةِۖ وَنَادَىٰهُمَا رَبُّهُمَآ أَلَمۡ أَنۡهَكُمَا عَن
تِلۡكُمَا ٱلشَّجَرَةِ وَأَقُل لَّكُمَآ إِنَّ ٱلشَّيۡطَـٰنَ
لَكُمَا عَدُوّٞ مُّبِينٞ ﴿٢٢﴾

២២-ហើយវាបានបញ្ចុះបញ្ចូលគេទាំងពីរដោយការបោកប្រាស់ ។ នៅពេលដែលគេទាំងពីរបានភ្លក្សផ្លែឈើនោះ ភាពអាក្រាតរបស់គេទាំងពីរក៏បានលាតត្រដាងចំពោះគេទាំងពីរ ហើយគេទាំងពីរបានបេះស្លឹកឈើឋានសួគ៌យកមកបិទបាំងលើរាងកាយរបស់គេទាំងពីរ ។ ពេលនោះម្ចាស់របស់គេទាំងពីរបានហៅគេទាំងពីរដោយមានបន្ទូលថា: តើយើងមិនបានហាមឃាត់អ្នកទាំងពីរអំពីដើមឈើនោះ និងបានប្រាប់អ្នកទាំងពីរថា: ជាការពិតណាស់ ស្ហៃតនគឺជា

សត្រូវយ៉ាងពិតប្រាកដចំពោះអ្នកទាំងពីរទេឬ?

قَالَا رَبَّنَا ظَلَمْنَآ أَنفُسَنَا وَإِن لَّمْ تَغْفِرْ لَنَا وَتَرْحَمْنَا لَنَكُونَنَّ مِنَ ٱلْخَٰسِرِينَ ﴿٢٣﴾

២៣-គេទាំងពីរបានបួងសួងសុំថាៈ ឱម្ចាស់របស់ពួកយើង! ពួកយើងបានបំពានលើខ្លួនឯងហើយ តែបើទ្រង់មិនអភ័យទោស និងអាណិតស្រឡាញ់ដល់ពួកយើងទេនោះ ពួកយើងច្បាស់ជាស្ថិតក្នុងចំណោមអ្នកដែលខាតបង់ជាមិនខាន។

قَالَ ٱهْبِطُوا۟ بَعْضُكُمْ لِبَعْضٍ عَدُوٌّ ۖ وَلَكُمْ فِى ٱلْأَرْضِ مُسْتَقَرٌّ وَمَتَٰعٌ إِلَىٰ حِينٍ ﴿٢٤﴾

២៤-ទ្រង់បានមានបន្ទូលថាៈ ចូរពួកអ្នកចុះចេញ(ទៅរស់នៅលើផែនដី)ដោយពួកអ្នកជាសត្រូវនឹងគ្នាចុះ។ ហើយនៅលើផែនដីគឺជាកន្លែងរស់នៅសម្រាប់ពួកអ្នក និងសោយសុខរហូតដល់ពេលអវសាន្ត។

قَالَ فِيهَا تَحْيَوْنَ وَفِيهَا تَمُوتُونَ وَمِنْهَا تُخْرَجُونَ ﴿٢٥﴾

២៥-ទ្រង់បានមានបន្ទូលទៀតថាៈ ពួកអ្នករស់នៅលើវា(ផែនដី) ហើយពួកអ្នកក៏ស្លាប់នៅលើវាដែរ ហើយ(នៅថ្ងៃបរលោក)ពួកអ្នកនឹងត្រូវគេបញ្ចេញពីវាមកវិញ។

يَٰبَنِىٓ ءَادَمَ قَدْ أَنزَلْنَا عَلَيْكُمْ لِبَاسًا يُوَٰرِى سَوْءَٰتِكُمْ وَرِيشًا ۖ وَلِبَاسُ ٱلتَّقْوَىٰ ذَٰلِكَ خَيْرٌ ۚ ذَٰلِكَ مِنْ ءَايَٰتِ ٱللَّهِ لَعَلَّهُمْ يَذَّكَّرُونَ ﴿٢٦﴾

២៦-ឱកូនចៅអាដាំ! យើងបានបញ្ចុះមកឱ្យពួកអ្នកនូវសំលៀកបំពាក់ ដែលអាចបិទបាំងរាងកាយរបស់ពួកអ្នក និងសំលៀកបំពាក់សម្រាប់តែងលំអខ្លួន។ តែសំលៀកបំពាក់កោតខ្លាច(ធ្វើអ្វីដែលអល់ឡោះប្រើ និងចៀសវាងពីការហាមឃាត់)នោះ វាប្រសើរជាងអ្វីៗទាំងអស់។ ទាំងនោះគឺក្នុងចំណោមភស្តុតាងរបស់អល់ឡោះសង្ឃឹមថាពួកគេនឹងចងចាំ។

يَٰبَنِىٓ ءَادَمَ لَا يَفْتِنَنَّكُمُ ٱلشَّيْطَٰنُ كَمَآ أَخْرَجَ أَبَوَيْكُم مِّنَ ٱلْجَنَّةِ يَنزِعُ عَنْهُمَا لِبَاسَهُمَا لِيُرِيَهُمَا سَوْءَٰتِهِمَآ ۗ إِنَّهُۥ يَرَىٰكُمْ هُوَ وَقَبِيلُهُۥ مِنْ حَيْثُ لَا تَرَوْنَهُمْ ۗ إِنَّا جَعَلْنَا ٱلشَّيَٰطِينَ أَوْلِيَآءَ لِلَّذِينَ لَا يُؤْمِنُونَ ﴿٢٧﴾

២៧-ឱកូនចៅអាដាំ! ចូរកុំឱ្យស្ហៃតនបោកបញ្ឆោតពួកអ្នក ដូចដែលវាធ្លាប់បានបញ្ចេញឪពុកម្ដាយរបស់ពួកអ្នកពីឋានសួគ៌ ដោយវាដោះសំលៀកបំពាក់ចេញពីគេទាំងពីរ ដើម្បីវាលាតត្រដាងនូវភាពអាក្រាតរបស់គេទាំងពីរ។ ជាការពិតណាស់ វានិងបក្សពួករបស់វាឃើញពួកអ្នក ដោយពួកអ្នកមិនអាចឃើញពួកវាបានឡើយ។ ពិតប្រាកដណាស់ យើងបានធ្វើឱ្យស្ហៃតនក្លាយជាអ្នកដឹកនាំសម្រាប់ពួកដែលគ្មានជំនឿ។

وَإِذَا فَعَلُوا۟ فَٰحِشَةً قَالُوا۟ وَجَدْنَا عَلَيْهَآ ءَابَآءَنَا وَٱللَّهُ أَمَرَنَا بِهَا ۗ قُلْ إِنَّ ٱللَّهَ لَا يَأْمُرُ

២៨-ហើយនៅពេលដែលពួកគេបានប្រព្រឹត្តអំពើអាក្រក់ ពួកគេតែងតែនិយាយថាៈ ពួកយើងបានទទួលវាពីជីដូនជីតារបស់យើង ហើយអល់ឡោះបានបញ្ជាពួកយើងឱ្យធ្វើវា។ ចូរអ្នក(មូហាំម៉ាត់)

بِٱلۡفَحۡشَآءِۖ أَتَقُولُونَ عَلَى ٱللَّهِ مَا لَا تَعۡلَمُونَ ٢٨

ពោលថា: ពិតប្រាកដណាស់អល់ឡោះមិនបញ្ជាឱ្យធ្វើអាក្រក់នោះឡើយ ។ តើពួកអ្នកកំពុងតែនិយាយបំផ្លើសលើអល់ឡោះនូវអ្វីដែលពួកអ្នកមិនដឹងឬ?

قُلۡ أَمَرَ رَبِّي بِٱلۡقِسۡطِۖ وَأَقِيمُواْ وُجُوهَكُمۡ عِندَ كُلِّ مَسۡجِدٖ وَٱدۡعُوهُ مُخۡلِصِينَ لَهُ ٱلدِّينَۚ كَمَا بَدَأَكُمۡ تَعُودُونَ ٢٩

២៩-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ម្ចាស់របស់ខ្ញុំបានបញ្ជាឱ្យប្រកាន់ខ្ជាប់នូវភាពយុត្តិធម៌ ។ ហើយចូរពួកអ្នកប្រឈមមុខរបស់ពួកអ្នក(ចំពោះទ្រង់)នៅរាល់ៗម៉ាស្ជិទ(ពេលសឡាត) ហើយចូរពួកអ្នកគោរពសក្ការៈចំពោះទ្រង់ដោយចិត្តស្មោះសក្នុងការប្រណិបត្តិនីចំពោះទ្រង់ ។ ពួកអ្នកនឹងវិលត្រឡប់ទៅកាន់ទ្រង់វិញដូចដែលទ្រង់បានចាប់ផ្ដើមបង្កើតពួកអ្នកដូច្នោះដែរ ។

فَرِيقًا هَدَىٰ وَفَرِيقًا حَقَّ عَلَيۡهِمُ ٱلضَّلَٰلَةُۚ إِنَّهُمُ ٱتَّخَذُواْ ٱلشَّيَٰطِينَ أَوۡلِيَآءَ مِن دُونِ ٱللَّهِ وَيَحۡسَبُونَ أَنَّهُم مُّهۡتَدُونَ ٣٠

៣០-មួយក្រុមទ្រង់បានចង្អុលបង្ហាញ និងមួយក្រុមទៀតភាពវង្វេងប្រាកដជាបានធ្លាក់លើពួកគេ ។ ពិតប្រាកដណាស់ ពួកគេបានយកពួកស្ហៃតនធ្វើជាមេដឹកនាំក្រៅពីអល់ឡោះ ហើយពួកគេស្មានថា: ពិតប្រាកដណាស់ ពួកគេជាអ្នកទទួលបានការចង្អុលបង្ហាញទៅវិញ ។

۞يَٰبَنِيٓ ءَادَمَ خُذُواْ زِينَتَكُمۡ عِندَ كُلِّ مَسۡجِدٖ وَكُلُواْ وَٱشۡرَبُواْ وَلَا تُسۡرِفُوٓاْۚ إِنَّهُۥ لَا يُحِبُّ ٱلۡمُسۡرِفِينَ ٣١

៣១-ឱកូនចៅអាដាំ! ចូរពួកអ្នកលំអសំលៀកបំពាក់របស់ពួកអ្នកនៅរាល់ម៉ាស្ជិទ(ពេលសឡាត) ។ ហើយចូរពួកអ្នកទទួលទាន និងផឹកចុះ តែពួកអ្នកកុំខ្ជះខ្ជាយឱ្យសោះ ។ ពិតប្រាកដណាស់ ទ្រង់មិនស្រឡាញ់ពួកដែលខ្ជះខ្ជាយឡើយ ។

قُلۡ مَنۡ حَرَّمَ زِينَةَ ٱللَّهِ ٱلَّتِيٓ أَخۡرَجَ لِعِبَادِهِۦ وَٱلطَّيِّبَٰتِ مِنَ ٱلرِّزۡقِۚ قُلۡ هِيَ لِلَّذِينَ ءَامَنُواْ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَا خَالِصَةٗ يَوۡمَ ٱلۡقِيَٰمَةِۗ كَذَٰلِكَ نُفَصِّلُ ٱلۡأٓيَٰتِ لِقَوۡمٖ يَعۡلَمُونَ ٣٢

៣២-ចូរអ្នកពោលថា: តើអ្នកណាបានហាមឃាត់ពួកអ្នកនូវសំលៀកបំពាក់ស្អាត និងលាភសក្ការៈដែលល្អ ដែលអល់ឡោះបានផ្ដល់ឱ្យបណ្ដាខ្ញុំរបស់ទ្រង់នោះ? ចូរអ្នកពោលថា: វាគឺសម្រាប់បណ្ដាអ្នកដែលមានជំនឿក្នុងការរស់នៅលើលោកិយនេះ ជាពិសេសគឺ(សម្រាប់ពួកគេ)នៅថ្ងៃបរលោក ។ ដូច្នោះដែរ យើងបញ្ជាក់ភស្តុតាងជាច្រើន(ច្បាប់អ៊ីស្លាម)យ៉ាងច្បាស់សម្រាប់ក្រុមដែលចេះដឹង ។

قُلۡ إِنَّمَا حَرَّمَ رَبِّيَ ٱلۡفَوَٰحِشَ مَا ظَهَرَ مِنۡهَا وَمَا بَطَنَ وَٱلۡإِثۡمَ وَٱلۡبَغۡيَ بِغَيۡرِ ٱلۡحَقِّ وَأَن

៣៣-ចូរអ្នក(មូហាំម៉ាត់)ពោលថា: តាមពិតម្ចាស់របស់ខ្ញុំបានហាមឃាត់ពីការប្រព្រឹត្តអំពើអាក្រក់ទាំងឡាយ ទោះបីជាលាតត្រដាង ឬលាក់បាំងពីវាក៏ដោយ ។ ហើយ(ទ្រង់បានហាម

تُشۡرِكُواْ بِٱللَّهِ مَا لَمۡ يُنَزِّلۡ بِهِۦ سُلۡطَٰنٗا وَأَن تَقُولُواْ عَلَى ٱللَّهِ مَا لَا تَعۡلَمُونَ ﴿٣٣﴾

ឃាត់ទៀត) អំពីការប្រព្រឹត្តបាបកម្ម និងការបំពានក្រៅពីការពិត ហើយនិងពួកស្ហ៊ីរិកនឹងអល់ឡោះនូវអ្វីដែលទ្រង់មិនបានបញ្ចុះភស្តុតាងណាមួយចំពោះវា ព្រមទាំងពួកដែលនិយាយបំផ្លើសលើអល់ឡោះនូវអ្វីដែលពួកអ្នកមិនដឹង។

وَلِكُلِّ أُمَّةٍ أَجَلٞۖ فَإِذَا جَآءَ أَجَلُهُمۡ لَا يَسۡتَأۡخِرُونَ سَاعَةٗ وَلَا يَسۡتَقۡدِمُونَ ﴿٣٤﴾

៣៤-រាល់ៗប្រជាជាតិគឺមានការកំណត់ជីវិតរួចជាស្រេច។ ដូច្នេះ នៅពេលដែលការកំណត់ជីវិតរបស់ពួកគេបានមកដល់ ពួកគេមិនអាចសុំពន្យារពេល ឬសុំមុនពេលកំណត់បានឡើយ ទោះបីជាមួយវិនាទីក៏ដោយ។

يَٰبَنِيٓ ءَادَمَ إِمَّا يَأۡتِيَنَّكُمۡ رُسُلٞ مِّنكُمۡ يَقُصُّونَ عَلَيۡكُمۡ ءَايَٰتِي فَمَنِ ٱتَّقَىٰ وَأَصۡلَحَ فَلَا خَوۡفٌ عَلَيۡهِمۡ وَلَا هُمۡ يَحۡزَنُونَ ﴿٣٥﴾

៣៥-ឱកូនចៅអាដាំ! ប្រសិនបើបណ្តាអ្នកនាំសារក្នុងចំណោមពួកអ្នកពិតជាមកដល់ពួកអ្នកដោយពួកគេនិទានឱ្យពួកអ្នកស្តាប់នូវបណ្តាភស្តុតាងរបស់យើង ដូច្នេះបើអ្នកណាបានកោតខ្លាចអល់ឡោះ និងបានកែខ្លួននោះ ពួកគេគ្មានការភ័យខ្លាចឡើយ ហើយពួកគេក៏មិនព្រួយបារម្ភដែរ។

وَٱلَّذِينَ كَذَّبُواْ بِـَٔايَٰتِنَا وَٱسۡتَكۡبَرُواْ عَنۡهَآ أُوْلَٰٓئِكَ أَصۡحَٰبُ ٱلنَّارِۖ هُمۡ فِيهَا خَٰلِدُونَ ﴿٣٦﴾

៣៦-ហើយពួកដែលបានបដិសេធនឹងបណ្តាភស្តុតាងរបស់យើង និងអួតអាងប្រឆាំងនឹងវា ពួកទាំងនោះគឺជាពួកនរកដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។

فَمَنۡ أَظۡلَمُ مِمَّنِ ٱفۡتَرَىٰ عَلَى ٱللَّهِ كَذِبًا أَوۡ كَذَّبَ بِـَٔايَٰتِهِۦٓۚ أُوْلَٰٓئِكَ يَنَالُهُمۡ نَصِيبُهُم مِّنَ ٱلۡكِتَٰبِۖ حَتَّىٰٓ إِذَا جَآءَتۡهُمۡ رُسُلُنَا يَتَوَفَّوۡنَهُمۡ قَالُوٓاْ أَيۡنَ مَا كُنتُمۡ تَدۡعُونَ مِن دُونِ ٱللَّهِۖ قَالُواْ ضَلُّواْ عَنَّا وَشَهِدُواْ عَلَىٰٓ أَنفُسِهِمۡ أَنَّهُمۡ كَانُواْ كَٰفِرِينَ ﴿٣٧﴾

៣៧-តើអ្នកណាដែលបានបំពានជាងអ្នកដែលបានមួលបង្កាច់លើអល់ឡោះដោយការភូតកុហក ឬបានបដិសេធនឹងបណ្តាភស្តុ-តាងរបស់ទ្រង់នោះ? ពួកគេទាំងនោះនឹងទទួលបាននូវចំណែក(ល្អ និងអាក្រក់) របស់ពួកគេនៅក្នុងកំណត់ត្រា។ រហូតដល់ពេលដែលបណ្តាអ្នកនាំសារ(ម៉ាឡាអ៊ីកាត់) របស់យើងបានមកដល់ពួកគេដើម្បីយកជីវិតពួកគេ។ ពួកគេបានពោលថាៈ នៅឯណាទៅម្ចាស់ដែលពួកអ្នកធ្លាប់បួងសួងផ្សេងពីអល់ឡោះនោះ? ពួកគេបានឆ្លើយថាៈ ពួកនោះបានគេចចេញពីពួកយើងហើយ ដោយពួកគេទទួលស្គាល់ខ្លួនឯងថាៈ ពិតប្រាកដណាស់ ពួកគេធ្លាប់ជាពួកប្រឆាំង។

قَالَ ٱدۡخُلُواْ فِيٓ أُمَمٖ قَدۡ خَلَتۡ مِن قَبۡلِكُم مِّنَ ٱلۡجِنِّ وَٱلۡإِنسِ فِي ٱلنَّارِۖ كُلَّمَا دَخَلَتۡ

៣៨-អល់ឡោះបានមានបន្ទូលថាៈ ចូរពួកអ្នកចូលនរកជាមួយបណ្តាប្រជាជាតិដែលបានកន្លងផុតទៅមុនពួកអ្នកអំពីជិននិងមនុស្ស

أُمَّةٌ لَّعَنَتْ أُخْتَهَا ۖ حَتَّىٰٓ إِذَا ٱدَّارَكُوا۟ فِيهَا
جَمِيعًا قَالَتْ أُخْرَىٰهُمْ لِأُولَىٰهُمْ رَبَّنَا هَٰٓؤُلَآءِ
أَضَلُّونَا فَـَٔاتِهِمْ عَذَابًا ضِعْفًا مِّنَ ٱلنَّارِ ۖ قَالَ
لِكُلٍّ ضِعْفٌ وَلَٰكِن لَّا تَعْلَمُونَ ﴿٣٨﴾

ចុះ។ រាល់ពេលដែលប្រជាជាតិមួយបានចូល(នរក) គេក៏បានដាក់បណ្ដាសាមិត្តភក្តិរបស់គេ(អ្នកចូលមុន) រហូតដល់ពេលពួកគេចូលទៅក្នុងវាទាំងអស់គ្នា ពួកដែលចូលក្រោយបាននិយាយទៅកាន់ពួកដែលចូលមុនពួកគេថា: ឱម្ចាស់របស់ពួកយើង! ពួកនេះហើយដែលបានធ្វើឱ្យពួកយើងវង្វេង ហេតុនេះសូមទ្រង់ធ្វើទារុណកម្មពួកគេទ្វេដងអំពីភ្លើងនរកផងចុះ។ ទ្រង់បានមានបន្ទូលថា: ពួកអ្នករាល់គ្នានឹងទទួលទារុណកម្មទ្វេដង ប៉ុន្តែពួកអ្នកមិនដឹងឡើយ ។

وَقَالَتْ أُولَىٰهُمْ لِأُخْرَىٰهُمْ فَمَا كَانَ لَكُمْ
عَلَيْنَا مِن فَضْلٍ فَذُوقُوا۟ ٱلْعَذَابَ بِمَا كُنتُمْ
تَكْسِبُونَ ﴿٣٩﴾

៣៩-ហើយពួកដែលចូលមុនបាននិយាយទៅកាន់ពួកដែលចូលក្រោយពួកគេវិញថា: ពួកអ្នកគ្មានអ្វីពិសេសលើសពួកយើងឡើយ។ (អល់ឡោះមានបន្ទូលទៅកាន់ពួកទាំងនោះថា) ដូច្នេះ ចូរពួកអ្នកភ្លក្សរសជាតិទារុណកម្មដោយសារតែអ្វីដែលពួកអ្នកបានសាងចុះ។

إِنَّ ٱلَّذِينَ كَذَّبُوا۟ بِـَٔايَٰتِنَا وَٱسْتَكْبَرُوا۟ عَنْهَا
لَا تُفَتَّحُ لَهُمْ أَبْوَٰبُ ٱلسَّمَآءِ وَلَا يَدْخُلُونَ
ٱلْجَنَّةَ حَتَّىٰ يَلِجَ ٱلْجَمَلُ فِى سَمِّ ٱلْخِيَاطِ ۚ
وَكَذَٰلِكَ نَجْزِى ٱلْمُجْرِمِينَ ﴿٤٠﴾

៤០-ពិតប្រាកដណាស់ ពួកដែលបានបដិសេធនឹងភស្តុតាងទាំងឡាយរបស់យើង និងអួតអាងប្រឆាំងចំពោះវា គេនឹងមិនបើកទ្វារមេឃសម្រាប់ពួកនេះឡើយ(ពេលដែលពួកនេះស្លាប់) ហើយពួកនេះមិនអាចចូលឋានសួគ៌បានឡើយ លុះត្រាតែសត្វអូដ្ឋអាចចូលក្នុងរន្ធម្ជុលបាន។ ដូច្នោះដែរ យើងនឹងតបស្នងចំពោះពួកដែលធ្វើអាក្រក់។

لَهُم مِّن جَهَنَّمَ مِهَادٌ وَمِن فَوْقِهِمْ غَوَاشٍ ۚ
وَكَذَٰلِكَ نَجْزِى ٱلظَّٰلِمِينَ ﴿٤١﴾

៤១-នៅពីក្រោមពួកគេមានកម្រាល និងមានភួយនៅពីលើពួកគេអំពីភ្លើងនរកជើហាន់ណាំ។ ដូចនោះដែរយើងនឹងតបស្នងចំពោះពួកដែលបំពាន។

وَٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ
لَا نُكَلِّفُ نَفْسًا إِلَّا وُسْعَهَآ أُو۟لَٰٓئِكَ أَصْحَٰبُ
ٱلْجَنَّةِ ۖ هُمْ فِيهَا خَٰلِدُونَ ﴿٤٢﴾

៤២-រីឯបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អវិញ គឺយើងមិនដាក់បន្ទុកលើបុគ្គលណាម្នាក់ឱ្យហួសពីសមត្ថភាពរបស់គេឡើយ។ អ្នកទាំងនោះគឺជាអ្នកឋានសួគ៌ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។

وَنَزَعْنَا مَا فِى صُدُورِهِم مِّنْ غِلٍّ تَجْرِى مِن
تَحْتِهِمُ ٱلْأَنْهَٰرُ ۖ وَقَالُوا۟ ٱلْحَمْدُ لِلَّهِ ٱلَّذِى هَدَىٰنَا
لِهَٰذَا وَمَا كُنَّا لِنَهْتَدِىَ لَوْلَآ أَنْ هَدَىٰنَا

៤៣-ហើយយើងបានបំបាត់ភាពឈ្នានីសចេញពីចិត្តរបស់ពួកគេ(នៅក្នុងឋានសួគ៌) ដែលមានទន្លេជាច្រើនហូរកាត់ពីក្រោមពួកគេ ហើយពួកគេបាននិយាយថា: រាល់ការសរសើរគឺចំពោះអល់ឡោះដែលទ្រង់បានចង្អុលបង្ហាញពួកយើងទៅរកមាគ៌ានេះ។ ហើយពួក

ٱللَّهُ ۖ لَقَدْ جَآءَتْ رُسُلُ رَبِّنَا بِٱلْحَقِّ ۖ وَنُودُوٓا۟
أَن تِلْكُمُ ٱلْجَنَّةُ أُورِثْتُمُوهَا بِمَا كُنتُمْ
تَعْمَلُونَ ﴿٤٣﴾

យើងពិតជាមិនទទួលបានការចង្អុលបង្ហាញឡើយ ប្រសិនបើគ្មានការចង្អុលបង្ហាញរបស់អល់ឡោះចំពោះពួកយើងទេនោះ។ ជាការពិតណាស់ បណ្ដាអ្នកនាំសារនៃម្ចាស់របស់យើងបាននាំមកនូវការពិត។ ហើយពួកយើងត្រូវបានគេប្រកាសប្រាប់ថាៈ ឋានសួគ៌នេះត្រូវបានគេផ្ដល់វាឱ្យពួកអ្នកដោយសារតែអ្វីដែលពួកអ្នកបានសាង។

وَنَادَىٰٓ أَصْحَٰبُ ٱلْجَنَّةِ أَصْحَٰبَ ٱلنَّارِ أَن قَدْ
وَجَدْنَا مَا وَعَدَنَا رَبُّنَا حَقًّا فَهَلْ وَجَدتُّم
مَّا وَعَدَ رَبُّكُمْ حَقًّا ۖ قَالُوا۟ نَعَمْ ۚ فَأَذَّنَ مُؤَذِّنٌۢ
بَيْنَهُمْ أَن لَّعْنَةُ ٱللَّهِ عَلَى ٱلظَّٰلِمِينَ ﴿٤٤﴾

៤៤-ហើយបណ្ដាអ្នកឋានសួគ៌បានស្រែកប្រាប់ពួកអ្នកឋាននរកថាៈ ពួកយើងបានទទួលយ៉ាងពិតប្រាកដមែននូវអ្វីដែលម្ចាស់របស់ពួកយើងបានសន្យានឹងពួកយើង។ ចុះពួកអ្នកវិញ តើបានទទួលយ៉ាងពិតប្រាកដនូវអ្វីដែលម្ចាស់របស់ពួកអ្នកបានសន្យាដែរឬទេ? ពួកគេឆ្លើយថាៈ ពិតមែន។ ពេលនោះអ្នកប្រកាសបានប្រកាសប្រាប់រវាងពួកគេថាៈ ជាការពិតបណ្ដាសាររបស់អល់ឡោះគឺធ្លាក់ទៅលើពួកដែលបំពាន។

ٱلَّذِينَ يَصُدُّونَ عَن سَبِيلِ ٱللَّهِ وَيَبْغُونَهَا
عِوَجًا وَهُم بِٱلْءَاخِرَةِ كَٰفِرُونَ ﴿٤٥﴾

៤៥-គឺជាពួកដែលរារាំងអ្នកដទៃអំពីមាគ៌ារបស់អល់ឡោះ ហើយពួកគេមានបំណងធ្វើឱ្យវា(មាគ៌ា)វៀចវេរ ដោយពួកគេជាអ្នកប្រឆាំងនឹងថ្ងៃបរលោក។

وَبَيْنَهُمَا حِجَابٌ ۚ وَعَلَى ٱلْأَعْرَافِ رِجَالٌ
يَعْرِفُونَ كُلًّۢا بِسِيمَىٰهُمْ ۚ وَنَادَوْا۟ أَصْحَٰبَ ٱلْجَنَّةِ
أَن سَلَٰمٌ عَلَيْكُمْ ۚ لَمْ يَدْخُلُوهَا وَهُمْ
يَطْمَعُونَ ﴿٤٦﴾

៤៦-ហើយរវាងពួកគេទាំងពីរ(ពួកឋានសួគ៌ និងពួកឋាននរក) គឺមានជញ្ជាំងខណ្ឌ។ ហើយនៅលើជញ្ជាំងខណ្ឌនេះមានបុរសជាច្រើន[1] ដែលពួកគេស្គាល់ពួកទាំងពីរក្រុមនោះតាមរយៈសញ្ញារបស់ពួកគេ។ ហើយពួកគេ(បុរស)បានស្រែកហៅពួកឋានសួគ៌ថាៈ សូមឱ្យមានសុខសន្តិភាពលើពួកអ្នក (ដោយពេលនោះ)ពួកគេមិនទាន់បានចូលឋានសួគ៌នៅឡើយទេ តែពួកគេសង្ឃឹមយ៉ាងខ្លាំងថានឹងបានចូល(ឋានសួគ៌)។

۞ وَإِذَا صُرِفَتْ أَبْصَٰرُهُمْ تِلْقَآءَ أَصْحَٰبِ ٱلنَّارِ
قَالُوا۟ رَبَّنَا لَا تَجْعَلْنَا مَعَ ٱلْقَوْمِ ٱلظَّٰلِمِينَ ﴿٤٧﴾

៤៧-តែនៅពេលដែលពួកគេបង្វែរភ្នែករបស់ពួកគេមើលទៅកាន់ពួកឋាននរកវិញ ពួកគេបានអង្វរសុំថាៈ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្ដាកុំដាក់ពួកយើងជាមួយក្រុមដែលបំពានអ្វី។

---

១-ពួកនេះមានអំពើល្អនិងអំពើអាក្រក់ស្មើគ្នាអល់ឡោះបានទុកពួកនេះនៅទីនេះសិន រង់ចាំការកាត់ក្ដីអ្នកផ្សេងរួចរាល់ ទើបធ្វើការកាត់ក្ដីសម្រេចឱ្យពួកគេចូលឋានសួគ៌តាមប្រាថ្នារបស់ទ្រង់ ។

وَنَادَىٰٓ أَصۡحَٰبُ ٱلۡأَعۡرَافِ رِجَالٗا يَعۡرِفُونَهُم بِسِيمَىٰهُمۡ قَالُواْ مَآ أَغۡنَىٰ عَنكُمۡ جَمۡعُكُمۡ وَمَا كُنتُمۡ تَسۡتَكۡبِرُونَ ﴿٤٨﴾

៤៨-ហើយពួកដែលនៅលើជញ្ជាំងនោះបានហៅពួកបុរស(ជាមេដឹកនាំរបស់ពួកគ្មានជំនឿ) ដែលពួកគេស្គាល់ពួកទាំងនោះតាមរយៈសញ្ញារបស់ពួកគេ ដោយនិយាយថា: តើការប្រមូល(ផលប្រយោជន៍លោកិយ)របស់ពួកអ្នក និងអ្វីដែលពួកអ្នកធ្លាប់ក្រអឺតក្រទមនោះវាមានផលប្រយោជន៍ដល់ពួកអ្នកអ្វីខ្លះ?

أَهَٰٓؤُلَآءِ ٱلَّذِينَ أَقۡسَمۡتُمۡ لَا يَنَالُهُمُ ٱللَّهُ بِرَحۡمَةٍۚ ٱدۡخُلُواْ ٱلۡجَنَّةَ لَا خَوۡفٌ عَلَيۡكُمۡ وَلَآ أَنتُمۡ تَحۡزَنُونَ ﴿٤٩﴾

៤៩-តើអ្នកទាំងនេះ(អ្នកដែលបានចូលឋានសួគ៌)ឬដែលពួកអ្នកបានស្បថថា អល់ឡោះនឹងមិនផ្ដល់ការអាណិតស្រឡាញ់ដល់ពួកគេទេនោះ? (មានគេនិយាយទៅកាន់ពួកនៅលើជញ្ជាំងថា) ចូរពួកអ្នកចូលឋានសួគ៌ចុះ ដោយគ្មានការភ័យខ្លាចចំពោះពួកអ្នកឡើយ ហើយពួកអ្នកក៏គ្មានការព្រួយបារម្ភដែរ។

وَنَادَىٰٓ أَصۡحَٰبُ ٱلنَّارِ أَصۡحَٰبَ ٱلۡجَنَّةِ أَنۡ أَفِيضُواْ عَلَيۡنَا مِنَ ٱلۡمَآءِ أَوۡ مِمَّا رَزَقَكُمُ ٱللَّهُۚ قَالُوٓاْ إِنَّ ٱللَّهَ حَرَّمَهُمَا عَلَى ٱلۡكَٰفِرِينَ ﴿٥٠﴾

៥០-ពួកនរកបានស្រែកអង្វរហៅពួកឋានសួគ៌ថា សូមជួយបន្តក់ទឹកឱ្យពួកយើងផឹកផង ឬជួយផ្ដល់ចំណីអាហារដែលអល់ឡោះបានផ្ដល់ឱ្យពួកអ្នកដល់ពួកយើងផង។ អ្នកឋានសួគ៌បានប្រាប់ទៅវិញថា: អល់ឡោះពិតជាបានដាក់បម្រាមរបស់ទាំងពីរនេះលើពួកប្រឆាំង។

ٱلَّذِينَ ٱتَّخَذُواْ دِينَهُمۡ لَهۡوٗا وَلَعِبٗا وَغَرَّتۡهُمُ ٱلۡحَيَوٰةُ ٱلدُّنۡيَاۚ فَٱلۡيَوۡمَ نَنسَىٰهُمۡ كَمَا نَسُواْ لِقَآءَ يَوۡمِهِمۡ هَٰذَا وَمَا كَانُواْ بِـَٔايَٰتِنَا يَجۡحَدُونَ ﴿٥١﴾

៥១-ពួកដែលបានយកសាសនារបស់ពួកគេធ្វើជាការកំសាន្ត និងការលេងសើច ហើយជីវិតលោកិយបានបោកបញ្ឆោតពួកគេ។ ដូច្នេះថ្ងៃនេះ(បរលោក) យើងភ្លេចពួកគេដូចដែលពួកគេបានភ្លេចនូវថ្ងៃជំនួបរបស់ពួកគេនេះដែរ និងអ្វីដែលពួកគេធ្លាប់ប្រឆាំងនឹងបណ្ដាភស្តុតាងរបស់យើង។

وَلَقَدۡ جِئۡنَٰهُم بِكِتَٰبٖ فَصَّلۡنَٰهُ عَلَىٰ عِلۡمٍ هُدٗى وَرَحۡمَةٗ لِّقَوۡمٖ يُؤۡمِنُونَ ﴿٥٢﴾

៥២-ហើយជាការពិតណាស់ យើងបាននាំមកឱ្យពួកគេនូវគម្ពីរ(គួរអាន)ដែលយើងបានពន្យល់វាយ៉ាងច្បាស់ ដោយចំណេះដឹងជាការចង្អុលបង្ហាញ និងជាការអាណិតស្រឡាញ់ចំពោះក្រុមដែលមានជំនឿ។

هَلۡ يَنظُرُونَ إِلَّا تَأۡوِيلَهُۥۚ يَوۡمَ يَأۡتِي تَأۡوِيلُهُۥ يَقُولُ ٱلَّذِينَ نَسُوهُ مِن قَبۡلُ قَدۡ جَآءَتۡ رُسُلُ رَبِّنَا بِٱلۡحَقِّ فَهَل لَّنَا مِن شُفَعَآءَ

៥៣-ពួកគេគ្មានរង់ចាំអ្វីក្រៅពីការសន្យានៅក្នុងគម្ពីរគួរអាននោះឡើយ។ នៅថ្ងៃដែលការសន្យារបស់វាមកដល់ពួកដែលបានភ្លេចវាពីមុនមកនិយាយថា: ជាការពិតណាស់ បណ្ដាអ្នកនាំសារនៃម្ចាស់របស់យើងបានមកដល់ដោយនាំមកនូវការពិត។ តើពួកយើង

فَيَشْفَعُوا۟ لَنَآ أَوْ نُرَدُّ فَنَعْمَلَ غَيْرَ ٱلَّذِى كُنَّا
نَعْمَلُ ۚ قَدْ خَسِرُوٓا۟ أَنفُسَهُمْ وَضَلَّ عَنْهُم مَّا
كَانُوا۟ يَفْتَرُونَ ﴿٥٣﴾

មានអ្នកជួយអន្តរាគមន៍ ដើម្បីនឹងជួយអន្តរាគមន៍ដល់ពួកយើង ឬពួកយើងមានគេបញ្ជូន(ទៅក្នុងលោកិយវិញ) ដើម្បីយើងនឹងធ្វើក្រៅពីអ្វីដែលយើងធ្លាប់ធ្វើដែរឬទេ? ជាការពិតណាស់ ពួកគេបានខាតបង់ដោយខ្លួនឯង ហើយអ្វីដែលពួកគេធ្លាប់បង្កើត(ម្ចាស់ផ្សេងពីអល់ឡោះ)នោះបានបាត់បង់ពីពួកគេ ។

إِنَّ رَبَّكُمُ ٱللَّهُ ٱلَّذِى خَلَقَ ٱلسَّمَـٰوَٰتِ
وَٱلْأَرْضَ فِى سِتَّةِ أَيَّامٍ ثُمَّ ٱسْتَوَىٰ عَلَى
ٱلْعَرْشِ يُغْشِى ٱلَّيْلَ ٱلنَّهَارَ يَطْلُبُهُۥ حَثِيثًا
وَٱلشَّمْسَ وَٱلْقَمَرَ وَٱلنُّجُومَ مُسَخَّرَٰتٍۭ
بِأَمْرِهِۦٓ ۗ أَلَا لَهُ ٱلْخَلْقُ وَٱلْأَمْرُ ۗ تَبَارَكَ ٱللَّهُ رَبُّ
ٱلْعَـٰلَمِينَ ﴿٥٤﴾

៥៤-ពិតប្រាកដណាស់ ម្ចាស់របស់ពួកអ្នកគឺអល់ឡោះដែលបានបង្កើតមេឃជាច្រើនជាន់និងផែនដីក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់នៅលើអារ៉ស្ហ ។ ទ្រង់ធ្វើឱ្យពេលយប់គ្របដណ្តប់លើពេលថ្ងៃដោយវានីមួយៗផ្លាស់វេនគ្នាយ៉ាងឆាប់រហ័ស ។ ហើយ(ទ្រង់បានបង្កើត) ព្រះអាទិត្យ ព្រះច័ន្ទ និងផ្កាយជាច្រើនឱ្យគោរពតាមបញ្ជារបស់ទ្រង់ ។ ចូរដឹងថា! ការបង្កើត និងការគ្រប់គ្រងគឺជាកម្មសិទ្ធិរបស់ទ្រង់ ។ អល់ឡោះដ៏មហាឧត្តុង្គឧត្តម ជាម្ចាស់គ្រប់គ្រងពិភពទាំងអស់ ។

ٱدْعُوا۟ رَبَّكُمْ تَضَرُّعًا وَخُفْيَةً ۚ إِنَّهُۥ لَا يُحِبُّ
ٱلْمُعْتَدِينَ ﴿٥٥﴾

៥៥-ចូរពួកអ្នក(អ្នកមានជំនឿ)បួងសួងសុំម្ចាស់របស់ពួកអ្នកដោយឱនលំទោន និងទន់ភ្លន់ចុះ ។ ពិតប្រាកដណាស់ ទ្រង់មិនស្រឡាញ់ពួកដែលបំពានឡើយ ។

وَلَا تُفْسِدُوا۟ فِى ٱلْأَرْضِ بَعْدَ إِصْلَـٰحِهَا
وَٱدْعُوهُ خَوْفًا وَطَمَعًا ۚ إِنَّ رَحْمَتَ ٱللَّهِ قَرِيبٌ
مِّنَ ٱلْمُحْسِنِينَ ﴿٥٦﴾

៥៦-ហើយចូរពួកអ្នកកុំបង្កវិនាសកម្មនៅលើផែនដីបន្ទាប់ពីមានស្ថេរភាពហើយនោះឱ្យសោះ ។ ហើយចូរពួកអ្នកបួងសួងសុំពីទ្រង់ដោយការកោតខ្លាច និងមានក្តីសង្ឃឹមយ៉ាងខ្លាំង ។ ពិតប្រាកដណាស់ ការអាណិតស្រឡាញ់របស់អល់ឡោះ គឺនៅជិតនឹងបណ្តាអ្នកដែលសាងអំពើល្អ ។

وَهُوَ ٱلَّذِى يُرْسِلُ ٱلرِّيَـٰحَ بُشْرًۢا بَيْنَ
يَدَىْ رَحْمَتِهِۦ ۖ حَتَّىٰٓ إِذَآ أَقَلَّتْ سَحَابًا ثِقَالًا
سُقْنَـٰهُ لِبَلَدٍ مَّيِّتٍ فَأَنزَلْنَا بِهِ ٱلْمَآءَ فَأَخْرَجْنَا
بِهِۦ مِن كُلِّ ٱلثَّمَرَٰتِ ۚ كَذَٰلِكَ نُخْرِجُ
ٱلْمَوْتَىٰ لَعَلَّكُمْ تَذَكَّرُونَ ﴿٥٧﴾

៥៧-ហើយទ្រង់ជាអ្នកដែលបានបញ្ជូនខ្យល់ជាដំណឹងល្អមួយមុននឹងក្តីមេត្តាករុណារបស់ទ្រង់(ទឹកភ្លៀង)មកដល់ ។ លុះដល់ពេលដែលខ្យល់នោះបានរំកិលដុំពពកដ៏ធ្ងន់(ក្លាយជាទឹកភ្លៀង) យើងក៏បានស្រោចស្រពវាលើតំបន់ក្រៀមក្រោះ ។ ហើយយើងបានបញ្ចុះទឹកភ្លៀងតាមរយៈវា(ពពក) បន្ទាប់មកយើងបានបញ្ចេញតាមរយៈវា(ទឹកភ្លៀង)នូវផលានុផលគ្រប់ប្រភេទ ។ ដូច្នោះដែរ យើងនឹងបញ្ចេញសាកសព(ធ្វើឱ្យរស់ឡើងវិញនៅថ្ងៃបរលោក)

ដើម្បីឱ្យពួកអ្នកចងចាំ ។

៥៨-ហើយតំបន់ដីដែលល្អនោះ(ពេលមានភ្លៀងធ្លាក់)ដំណាំដាំដុះ នៅទីនោះនឹងដុះឡើងតាមការអនុញ្ញាតពីម្ចាស់របស់វា ។ រីឯតំបន់ដីដែលមិនល្អវិញនោះ វាមិនអាចបញ្ចេញអ្វីឡើយ លើកលែងតែដុះ(បន្តិចបន្តួច)ទាំងលំបាកប៉ុណ្ណោះ ។ ដូច្នោះដែរ យើងនឹងបញ្ជាក់ប្រាប់នូវភស្តុតាងជាច្រើនសម្រាប់ក្រុមដែលដឹងគុណ ។

وَٱلۡبَلَدُ ٱلطَّيِّبُ يَخۡرُجُ نَبَاتُهُۥ بِإِذۡنِ رَبِّهِۦۖ وَٱلَّذِي خَبُثَ لَا يَخۡرُجُ إِلَّا نَكِدٗاۚ كَذَٰلِكَ نُصَرِّفُ ٱلۡأٓيَٰتِ لِقَوۡمٖ يَشۡكُرُونَ ٥٨

៥៩-ជាការពិតណាស់ យើងបានបញ្ជូននូហទៅកាន់ក្រុមរបស់គេ ហើយគេបានពោលថា: ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះចុះ ពួកអ្នកគ្មានម្ចាស់ណាផ្សេងពីទ្រង់ឡើយ ។ ពិតប្រាកដណាស់ ខ្ញុំព្រួយបារម្ភខ្លាចពួកអ្នកទទួលទារុណកម្មនាថ្ងៃដ៏មហិមា(ថ្ងៃបរលោក) ។

لَقَدۡ أَرۡسَلۡنَا نُوحًا إِلَىٰ قَوۡمِهِۦ فَقَالَ يَٰقَوۡمِ ٱعۡبُدُواْ ٱللَّهَ مَا لَكُم مِّنۡ إِلَٰهٍ غَيۡرُهُۥٓ إِنِّيٓ أَخَافُ عَلَيۡكُمۡ عَذَابَ يَوۡمٍ عَظِيمٖ ٥٩

៦០-មេដឹកនាំនៃក្រុមរបស់គេបាននិយាយថា: ពិតប្រាកដណាស់ ពួកយើងយល់ឃើញថា អ្នក(នូហ)គឺពិតជាស្ថិតនៅក្នុងភាពវង្វេងយ៉ាងជាក់ច្បាស់ ។

قَالَ ٱلۡمَلَأُ مِن قَوۡمِهِۦٓ إِنَّا لَنَرَىٰكَ فِي ضَلَٰلٖ مُّبِينٖ ٦٠

៦១-នូហបានឆ្លើយតបវិញថា: ឱក្រុមរបស់ខ្ញុំ! ខ្ញុំមិនមែនជាអ្នកវង្វេងទេ ក៏ប៉ុន្តែខ្ញុំជាអ្នកនាំសារមកពីម្ចាស់នៃពិភពទាំងអស់ ។

قَالَ يَٰقَوۡمِ لَيۡسَ بِي ضَلَٰلَةٞ وَلَٰكِنِّي رَسُولٞ مِّن رَّبِّ ٱلۡعَٰلَمِينَ ٦١

៦២-ខ្ញុំជាអ្នកផ្តល់សារទាំងឡាយនៃម្ចាស់របស់ខ្ញុំឱ្យពួកអ្នក និងជាអ្នកណែនាំពួកអ្នក ។ ហើយខ្ញុំដឹងពីអល់ឡោះនូវអ្វីដែលពួកអ្នកមិនដឹង ។

أُبَلِّغُكُمۡ رِسَٰلَٰتِ رَبِّي وَأَنصَحُ لَكُمۡ وَأَعۡلَمُ مِنَ ٱللَّهِ مَا لَا تَعۡلَمُونَ ٦٢

៦៣-តើពួកអ្នកងឿងឆ្ងល់ចំពោះការក្រើនរំលឹកពីម្ចាស់របស់ពួកអ្នកបានមកដល់ពួកអ្នកតាមរយៈបុរសម្នាក់(នូហ)ក្នុងចំណោមពួកអ្នក ដើម្បីឱ្យគេដាស់តឿនព្រមានពួកអ្នក និងដើម្បីឱ្យពួកអ្នកកោតខ្លាចអល់ឡោះ ហើយនិងដើម្បីឱ្យពួកអ្នកត្រូវគេ(អល់ឡោះ)អាណិតស្រឡាញ់ឬ?

أَوَعَجِبۡتُمۡ أَن جَآءَكُمۡ ذِكۡرٞ مِّن رَّبِّكُمۡ عَلَىٰ رَجُلٖ مِّنكُمۡ لِيُنذِرَكُمۡ وَلِتَتَّقُواْ وَلَعَلَّكُمۡ تُرۡحَمُونَ ٦٣

៦៤-តែពួកគេបានបដិសេធចំពោះនូហ ហើយយើងបានសង្គ្រោះគេ និងបណ្តាអ្នកដែលរួមជំនឿជាមួយគេនៅលើសំពៅ រួចយើងបានពន្លិចពួកដែលបានបដិសេធនឹងបណ្តាភស្តុតាងរបស់យើង ។ ពិត

فَكَذَّبُوهُ فَأَنجَيۡنَٰهُ وَٱلَّذِينَ مَعَهُۥ فِي ٱلۡفُلۡكِ وَأَغۡرَقۡنَا ٱلَّذِينَ كَذَّبُواْ بِـَٔايَٰتِنَآۚ إِنَّهُمۡ

ប្រាកដណាស់ ពួកគេជាក្រុមដែលងងឹតងងុល ។

៦៥-ហើយយើងបានបញ្ជូនហ៊ូទទៅកាន់(កុលសម្ព័ន្ធ) អាដដែលជាបងប្អូនរបស់ពួកគេ ។ គេ(ហ៊ូទ) បានពោលថា: ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះចុះ ពួកអ្នកគ្មានម្ចាស់ណាផ្សេងក្រៅពីទ្រង់ឡើយ ។ ដូច្នេះ តើពួកអ្នកមិនកោតខ្លាចទេឬ?

៦៦-មេដឹកនាំរបស់ពួកដែលប្រឆាំងក្នុងចំណោមប្រជាជនរបស់គាត់បាននិយាយថា: ពិតប្រាកដណាស់ ពួកយើងយល់ឃើញថា អ្នកស្ថិតក្នុងលក្ខណៈមិនគ្រប់គ្រាន់ ។ ហើយពិតប្រាកដណាស់ ពួកយើងគិតថា អ្នកពិតជាស្ថិតក្នុងចំណោមពួកដែលភូតកុហក ។

៦៧-ហ៊ូទបានតបវិញថា: ឱក្រុមរបស់ខ្ញុំ! ខ្ញុំពុំមែនមានលក្ខណៈមិនគ្រប់គ្រាន់នោះទេ ក៏ប៉ុន្តែខ្ញុំជាអ្នកនាំសារម្នាក់មកពីម្ចាស់គ្រប់គ្រងពិភពទាំងអស់ ។

៦៨-ខ្ញុំផ្តល់ឱ្យពួកអ្នកនូវសារទាំងឡាយនៃម្ចាស់របស់ខ្ញុំ ហើយខ្ញុំគឺជាអ្នកផ្តល់ដំបូន្មានម្នាក់ដែលទៀងត្រង់សម្រាប់ពួកអ្នក ។

៦៩-តើពួកអ្នកងឿងឆ្ងល់ចំពោះការក្រើនរំលឹកពីម្ចាស់របស់ពួកអ្នកបានមកដល់ពួកអ្នកតាមរយៈបុរសម្នាក់(ហ៊ូទ) ក្នុងចំណោមពួកអ្នក ដើម្បីឱ្យគេដាស់តឿនព្រមានពួកអ្នកឬ? ចូរពួកអ្នកចងចាំ (នៀកម៉ាត់របស់អល់ឡោះ) នៅពេលដែលទ្រង់បានបង្កើតពួកអ្នកជាអ្នកស្នង(គ្រប់គ្រងផែនដី) បន្ទាប់ពីប្រជាជនរបស់នួហ ហើយទ្រង់បានបន្ថែមឱ្យពួកអ្នកមានមាឌធំកម្លាំងខ្លាំងក្លា ។ ហេតុនេះ ចូរពួកអ្នកចងចាំនូវនៀកម៉ាត់ទាំងឡាយរបស់អល់ឡោះ សង្ឃឹមថាពួកអ្នកនឹងទទួលបានជោគជ័យ ។

៧០-ពួកគេបាននិយាយថា: តើអ្នកបានមកដល់ពួកយើងដើម្បីឱ្យពួកយើងគោរពសក្ការៈចំពោះអល់ឡោះតែមួយគត់ និងឱ្យយើងបោះបង់ចោលនូវអ្វីដែលជីដូនជីតារបស់ពួកយើងបានគោរពសក្ការៈឬ? ដូច្នេះ ចូរអ្នកនាំមកឱ្យពួកយើងនូវអ្វី(ទារុណកម្ម) ដែលអ្នកបានដាស់តឿនព្រមានពួកយើងមើល ប្រសិនបើអ្នកស្ថិតក្នុងចំណោមអ្នក

كَانُواْ قَوْمًا عَمِينَ ﴿٦٤﴾

۞ وَإِلَىٰ عَادٍ أَخَاهُمْ هُودًاۚ قَالَ يَٰقَوْمِ
ٱعْبُدُواْ ٱللَّهَ مَا لَكُم مِّنْ إِلَٰهٍ غَيْرُهُۥٓۚ أَفَلَا
تَتَّقُونَ ﴿٦٥﴾

قَالَ ٱلْمَلَأُ ٱلَّذِينَ كَفَرُواْ مِن قَوْمِهِۦٓ إِنَّا
لَنَرَىٰكَ فِي سَفَاهَةٍ وَإِنَّا لَنَظُنُّكَ مِنَ
ٱلْكَٰذِبِينَ ﴿٦٦﴾

قَالَ يَٰقَوْمِ لَيْسَ بِي سَفَاهَةٌ وَلَٰكِنِّي رَسُولٌ
مِّن رَّبِّ ٱلْعَٰلَمِينَ ﴿٦٧﴾

أُبَلِّغُكُمْ رِسَٰلَٰتِ رَبِّي وَأَنَا۠ لَكُمْ نَاصِحٌ
أَمِينٌ ﴿٦٨﴾

أَوَعَجِبْتُمْ أَن جَآءَكُمْ ذِكْرٌ مِّن رَّبِّكُمْ عَلَىٰ
رَجُلٍ مِّنكُمْ لِيُنذِرَكُمْۚ وَٱذْكُرُوٓاْ إِذْ
جَعَلَكُمْ خُلَفَآءَ مِنۢ بَعْدِ قَوْمِ نُوحٍ وَزَادَكُمْ فِي
ٱلْخَلْقِ بَصْۜطَةًۖ فَٱذْكُرُوٓاْ ءَالَآءَ ٱللَّهِ
لَعَلَّكُمْ تُفْلِحُونَ ﴿٦٩﴾

قَالُوٓاْ أَجِئْتَنَا لِنَعْبُدَ ٱللَّهَ وَحْدَهُۥ وَنَذَرَ مَا
كَانَ يَعْبُدُ ءَابَآؤُنَاۖ فَأْتِنَا بِمَا تَعِدُنَآ إِن
كُنتَ مِنَ ٱلصَّٰدِقِينَ ﴿٧٠﴾

សច្ចៈមែននោះ ។

قَالَ قَدۡ وَقَعَ عَلَيۡكُم مِّن رَّبِّكُمۡ رِجۡسٞ
وَغَضَبٌۖ أَتُجَٰدِلُونَنِي فِيٓ أَسۡمَآءٖ
سَمَّيۡتُمُوهَآ أَنتُمۡ وَءَابَآؤُكُم مَّا نَزَّلَ ٱللَّهُ بِهَا
مِن سُلۡطَٰنٖۚ فَٱنتَظِرُوٓاْ إِنِّي مَعَكُم مِّنَ
ٱلۡمُنتَظِرِينَ ٧١

៧១-គេ(ហ៊ូទ)បានពោលថា: ទណ្ឌកម្មនិងការខឹងសម្បាពីម្ចាស់របស់ពួកអ្នកពិតជាបានធ្លាក់មកលើពួកអ្នក ។ តើពួកអ្នកនៅឈ្លោះប្រកែកជាមួយខ្ញុំពីឈ្មោះទាំងអស់(បដិមា)ដែលពួកអ្នក និងជីដូនជីតារបស់ពួកអ្នកបានឱ្យឈ្មោះវា ដោយអល់ឡោះមិនបានបញ្ចុះភស្តុតាងណាមួយបញ្ជាក់ពីវានោះឬ? ដូច្នេះ ចូរពួកអ្នករង់ចាំ(ទណ្ឌកម្ម)ចុះ! ពិតប្រាកដណាស់ ខ្ញុំក៏រង់ចាំជាមួយពួកអ្នកដែរ ។

فَأَنجَيۡنَٰهُ وَٱلَّذِينَ مَعَهُۥ بِرَحۡمَةٖ مِّنَّا وَقَطَعۡنَا
دَابِرَ ٱلَّذِينَ كَذَّبُواْ بِـَٔايَٰتِنَاۖ وَمَا كَانُواْ
مُؤۡمِنِينَ ٧٢

៧២-ដូច្នេះ យើងបានសង្គ្រោះគេ(ហ៊ូទ)និងអ្នកដែលរួមជំនឿជាមួយគេ(ពីទណ្ឌកម្មដោយខ្យល់ព្យុះ)ដោយការអាណិតស្រឡាញ់ពីយើង ហើយយើងបានបំផ្លាញទាំងអស់ពួកដែលបដិសេធនឹងបណ្តាភស្តុតាងរបស់យើង ។ ហើយពួកគេមិនមែនជាអ្នកមានជំនឿឡើយ ។

وَإِلَىٰ ثَمُودَ أَخَاهُمۡ صَٰلِحٗاۗ قَالَ يَٰقَوۡمِ
ٱعۡبُدُواْ ٱللَّهَ مَا لَكُم مِّنۡ إِلَٰهٍ غَيۡرُهُۥۖ قَدۡ
جَآءَتۡكُم بَيِّنَةٞ مِّن رَّبِّكُمۡۖ هَٰذِهِۦ نَاقَةُ ٱللَّهِ
لَكُمۡ ءَايَةٗۖ فَذَرُوهَا تَأۡكُلۡ فِيٓ أَرۡضِ
ٱللَّهِۖ وَلَا تَمَسُّوهَا بِسُوٓءٖ فَيَأۡخُذَكُمۡ عَذَابٌ
أَلِيمٞ ٧٣

៧៣-ហើយយើងបានបញ្ជូនសឡេះទៅកាន់(កុលសម្ព័ន្ធ)សាមូដដែលជាបងប្អូនរបស់ពួកគេ ។ គេបានពោលថា: ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះចុះ ពួកអ្នកគ្មានម្ចាស់ណាផ្សេងក្រៅពីទ្រង់ឡើយ ។ មុជីហ្សាត់ពីម្ចាស់របស់ពួកអ្នកពិតជាបានមកដល់ពួកអ្នក នេះគឺជាសត្វអូដ្ឋញីរបស់អល់ឡោះដែលជាភស្តុតាងមួយសម្រាប់ពួកអ្នក ។ ដូច្នេះ ចូរពួកអ្នកទុកឱ្យវាដើរស៊ីនៅលើផែនដីរបស់អល់ឡោះចុះ ហើយពួកអ្នកកុំប៉ះពាល់វាដោយប្រការអាក្រក់ណាមួយឱ្យសោះ បើមិនដូច្នោះទេ ទារុណកម្មដ៏ឈឺចាប់នឹងធ្លាក់មកលើពួកអ្នកជាមិនខាន ។

وَٱذۡكُرُوٓاْ إِذۡ جَعَلَكُمۡ خُلَفَآءَ مِنۢ بَعۡدِ عَادٖ
وَبَوَّأَكُمۡ فِي ٱلۡأَرۡضِ تَتَّخِذُونَ مِن
سُهُولِهَا قُصُورٗا وَتَنۡحِتُونَ ٱلۡجِبَالَ بُيُوتٗاۖ
فَٱذۡكُرُوٓاْ ءَالَآءَ ٱللَّهِ وَلَا تَعۡثَوۡاْ فِي ٱلۡأَرۡضِ
مُفۡسِدِينَ ٧٤

៧៤-ចូរពួកអ្នកចងចាំ(នូវនៀកម៉ាត់)នៅពេលដែលទ្រង់បានបង្កើតពួកអ្នកជាអ្នកស្នង(គ្រប់គ្រងផែនដី)បន្ទាប់ពីអាដ ហើយទ្រង់បានផ្តល់លំនៅដ្ឋានឱ្យពួកអ្នកនៅលើផែនដី ដោយពួកអ្នកសាងសង់វិមាននៅលើដីរាប និងចោះភ្នំជាច្រើនធ្វើជាផ្ទះ ។ ដូច្នេះ ចូរពួកអ្នកចងចាំឧបការគុណទាំងឡាយរបស់អល់ឡោះ ហើយចូរពួកអ្នកកុំប្រព្រឹត្តបទល្មើសនៅលើផែនដីឱ្យសោះ ។

៧៥-ពួកមេដឹកនាំដែលក្រអឺតក្រទមនៃក្រុមរបស់គេ(សាឡេះ) បាននិយាយទៅកាន់ពួកដែលគេគិតថាជាពួកទន់ខ្សោយនៃអ្នកដែលមានជំនឿក្នុងចំណោមពួកគេថា: តើពួកអ្នកដឹងច្បាស់ទេថា សាឡេះពិតជាត្រូវគេបញ្ជូនមកពីម្ចាស់របស់គេមែនទេនោះ? ពួកគេបានឆ្លើយថា: ពិតប្រាកដណាស់ ពួកយើងជាអ្នកដែលមានជំនឿចំពោះអ្វីដែលគេបានបញ្ជូនមក។

قَالَ ٱلْمَلَأُ ٱلَّذِينَ ٱسْتَكْبَرُوا۟ مِن قَوْمِهِۦ لِلَّذِينَ ٱسْتُضْعِفُوا۟ لِمَنْ ءَامَنَ مِنْهُمْ أَتَعْلَمُونَ أَنَّ صَٰلِحًا مُّرْسَلٌ مِّن رَّبِّهِۦ ۚ قَالُوٓا۟ إِنَّا بِمَآ أُرْسِلَ بِهِۦ مُؤْمِنُونَ ﴿٧٥﴾

៧៦-ពួកដែលក្រអឺតក្រទមបាននិយាយថា: ពិតប្រាកដណាស់ ពួកយើងជាអ្នកដែលគ្មានជំនឿនឹងអ្វីដែលពួកអ្នកមានជំនឿចំពោះវាឡើយ។

قَالَ ٱلَّذِينَ ٱسْتَكْبَرُوٓا۟ إِنَّا بِٱلَّذِىٓ ءَامَنتُم بِهِۦ كَٰفِرُونَ ﴿٧٦﴾

៧៧-ហេតុនេះ ពួកគេក៏បានសម្លាប់សត្វអូដ្ឋញីនោះ ដោយពួកគេបានបំពានលើបទបញ្ជានៃម្ចាស់របស់ពួកគេ។ ហើយពួកគេបាននិយាយថា: ឱសាឡេះ! ចូរអ្នកនាំមកឱ្យពួកយើងនូវអ្វី(ទារុណកម្ម) ដែលអ្នកព្រមានពួកយើង ប្រសិនបើអ្នកស្ថិតក្នុងចំណោមបណ្ដាអ្នកដែលត្រូវគេបញ្ជូនមកមែននោះ។

فَعَقَرُوا۟ ٱلنَّاقَةَ وَعَتَوْا۟ عَنْ أَمْرِ رَبِّهِمْ وَقَالُوا۟ يَٰصَٰلِحُ ٱئْتِنَا بِمَا تَعِدُنَآ إِن كُنتَ مِنَ ٱلْمُرْسَلِينَ ﴿٧٧﴾

៧៨-ពេលនោះការរញ្ជួយដីបានឆក់យកជីវិតពួកគេ និងធ្វើឱ្យពួកគេស្លាប់នៅក្នុងផ្ទះរបស់ពួកគេ។

فَأَخَذَتْهُمُ ٱلرَّجْفَةُ فَأَصْبَحُوا۟ فِى دَارِهِمْ جَٰثِمِينَ ﴿٧٨﴾

៧៩-បន្ទាប់មកគេ(សាឡេះ)បានបែរចេញពីពួកគេ ហើយក៏ពោលថា: ឱក្រុមរបស់ខ្ញុំ! ខ្ញុំពិតជាបានផ្ដល់ឱ្យពួកអ្នកនូវសារពីម្ចាស់របស់ខ្ញុំ ហើយខ្ញុំក៏បានផ្ដល់ដំបូន្មានដល់ពួកអ្នកដែរ ប៉ុន្តែពួកអ្នកមិនពេញចិត្តនឹងបណ្ដាអ្នកដែលផ្ដល់ដំបូន្មាននោះឡើយ។

فَتَوَلَّىٰ عَنْهُمْ وَقَالَ يَٰقَوْمِ لَقَدْ أَبْلَغْتُكُمْ رِسَالَةَ رَبِّى وَنَصَحْتُ لَكُمْ وَلَٰكِن لَّا تُحِبُّونَ ٱلنَّٰصِحِينَ ﴿٧٩﴾

៨០-ហើយ(ចូរចងចាំ)នៅពេលដែលលូតបានពោលទៅកាន់ក្រុមរបស់គេថា: តើហេតុអ្វីបានជាពួកអ្នកប្រព្រឹត្តអំពើអសីលធម៌ដែលគ្មាននរណាម្នាក់ប្រព្រឹត្តវាមុនពួកអ្នកនៅលើពិភពទាំងអស់ដូច្នេះ?

وَلُوطًا إِذْ قَالَ لِقَوْمِهِۦٓ أَتَأْتُونَ ٱلْفَٰحِشَةَ مَا سَبَقَكُم بِهَا مِنْ أَحَدٍ مِّنَ ٱلْعَٰلَمِينَ ﴿٨٠﴾

៨១-ពិតប្រាកដណាស់ ពួកអ្នកពិតជាយកបុរសមកបំពេញចំណង់តណ្ហាក្រៅពីស្ត្រី។ ផ្ទុយទៅវិញ ពួកអ្នកពិតជាក្រុមដែលបំពាន។

إِنَّكُمْ لَتَأْتُونَ ٱلرِّجَالَ شَهْوَةً مِّن دُونِ ٱلنِّسَآءِ ۚ بَلْ أَنتُمْ قَوْمٌ مُّسْرِفُونَ ﴿٨١﴾

៨២-ហើយក្រុមរបស់គេ( លូត) មិនបានឆ្លើយតបអ្វីក្រៅពី ពួកគេនិយាយថា: ចូរពួកអ្នកបណ្តេញពួកគេ( លូត និងសមាជិក របស់គេ) ចេញពីភូមិស្រុករបស់ពួកអ្នកនោះឡើយ ។ ការពិត ពួកគេគឺជាមនុស្សចង់សំអាតខ្លួន( មិនរួមរ័កជាមួយបុរស) ។

៨៣-បន្ទាប់មកយើងបានសង្គ្រោះគេ( លូត) និងបណ្តាអ្នក ដែលតាមគេ លើកលែងតែភរិយារបស់គេប៉ុណ្ណោះដែលស្ថិតនៅ ក្នុងចំណោមពួកដែលត្រូវទទួលទារុណកម្ម ។

៨៤-យើងបានបញ្ចុះភ្លៀង( ជាដុំថ្មដ៏សែនក្តៅ) ជាច្រើនទៅលើ ពួកគេ ។ ដូច្នេះ ចូរអ្នក( មូហាំម៉ាត់) មើលចុះ! តើលទ្ធផលចុង ក្រោយរបស់ពួកដែលប្រព្រឹត្តអំពើអាក្រក់យ៉ាងដូចម្តេចទៅ?

៨៥-ហើយ( យើងបានបញ្ជូន) ស្ញូអែប ទៅកាន់កុលសម្ព័ន្ធម៉ាដ- យ៉ាន់ដែលជាបងប្អូនរបស់ពួកគេ ។ គេបានពោលថា: ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះចុះ ពួកអ្នកគ្មានម្ចាស់ណា ផ្សេងពីទ្រង់ឡើយ ។ ភស្តុតាងដ៏ច្បាស់លាស់ពីម្ចាស់របស់ពួកអ្នកពិត ជាបានមកដល់ពួកអ្នក ។ ដូច្នេះ ចូរពួកអ្នកបំពេញការវ៉ាល់ និងការ ថ្លឹងចុះ ហើយចូរពួកអ្នកកុំធ្វើឱ្យខ្វះរបស់របរអ្នកដទៃឱ្យសោះ ។ ហើយចូរពួកអ្នកកុំប្រព្រឹត្តបទល្មើសនៅលើផែនដីក្រោយពេលដែល វាមានស្ថេរភាពហើយឱ្យសោះ ។ នោះគឺជាការប្រសើរសម្រាប់ពួក អ្នក ប្រសិនបើពួកអ្នកជាអ្នកមានជំនឿនោះ ។

៨៦-ហើយពួកអ្នកមិនត្រូវអង្គុយនៅតាមដងផ្លូវ ដើម្បីគំរាម កំហែង និងរារាំងអ្នកដែលមានជំនឿលើអល់ឡោះអំពីមាគ៌ារបស់ ទ្រង់ ដោយពួកអ្នកស្វែងរកមាគ៌ាមិនត្រឹមត្រូវនោះទេ ។ ហើយចូរ ពួកអ្នកចងចាំ! នៅពេលដែលពួកអ្នកមានគ្នាតិច ហើយទ្រង់បាន ធ្វើឱ្យពួកអ្នកមានគ្នារីតតែច្រើន ។ ចូរពួកអ្នកមើលចុះ! តើលទ្ធផល ចុងក្រោយរបស់ពួកល្មើសនោះយ៉ាងណាដែរ?

៨៧-ហើយប្រសិនបើក្រុមមួយក្នុងចំណោមពួកអ្នកមានជំនឿ លើអ្វីដែលគេបានបញ្ជូនមកឱ្យខ្ញុំ( ស្ញូអែប) ហើយក្រុមមួយចំនួន ទៀតគ្មានជំនឿនោះ ចូរពួកអ្នកទាំងអស់អត់ធ្មត់ចុះ រហូតដល់

وَمَا كَانَ جَوَابَ قَوْمِهِۦٓ إِلَّآ أَن قَالُوٓاْ
أَخْرِجُوهُم مِّن قَرْيَتِكُمْ ۖ إِنَّهُمْ أُنَاسٌ
يَتَطَهَّرُونَ ﴿٨٢﴾

فَأَنجَيْنَٰهُ وَأَهْلَهُۥٓ إِلَّا ٱمْرَأَتَهُۥ كَانَتْ مِنَ
ٱلْغَٰبِرِينَ ﴿٨٣﴾

وَأَمْطَرْنَا عَلَيْهِم مَّطَرًا ۖ فَٱنظُرْ كَيْفَ كَانَ
عَٰقِبَةُ ٱلْمُجْرِمِينَ ﴿٨٤﴾

وَإِلَىٰ مَدْيَنَ أَخَاهُمْ شُعَيْبًا ۗ قَالَ يَٰقَوْمِ
ٱعْبُدُواْ ٱللَّهَ مَا لَكُم مِّنْ إِلَٰهٍ غَيْرُهُۥ ۖ قَدْ
جَآءَتْكُم بَيِّنَةٌ مِّن رَّبِّكُمْ ۖ فَأَوْفُواْ
ٱلْكَيْلَ وَٱلْمِيزَانَ وَلَا تَبْخَسُواْ ٱلنَّاسَ
أَشْيَآءَهُمْ وَلَا تُفْسِدُواْ فِى ٱلْأَرْضِ بَعْدَ
إِصْلَٰحِهَا ۚ ذَٰلِكُمْ خَيْرٌ لَّكُمْ إِن كُنتُم
مُّؤْمِنِينَ ﴿٨٥﴾

وَلَا تَقْعُدُواْ بِكُلِّ صِرَٰطٍ تُوعِدُونَ
وَتَصُدُّونَ عَن سَبِيلِ ٱللَّهِ مَنْ ءَامَنَ
بِهِۦ وَتَبْغُونَهَا عِوَجًا ۚ وَٱذْكُرُوٓاْ إِذْ كُنتُمْ
قَلِيلًا فَكَثَّرَكُمْ ۖ وَٱنظُرُواْ كَيْفَ كَانَ
عَٰقِبَةُ ٱلْمُفْسِدِينَ ﴿٨٦﴾

وَإِن كَانَ طَآئِفَةٌ مِّنكُمْ ءَامَنُواْ بِٱلَّذِىٓ
أُرْسِلْتُ بِهِۦ وَطَآئِفَةٌ لَّمْ يُؤْمِنُواْ فَٱصْبِرُواْ

حَتَّىٰ يَحۡكُمَ ٱللَّهُ بَيۡنَنَاۚ وَهُوَ خَيۡرُ
ٱلۡحَٰكِمِينَ ٨٧

អល់ឡោះវិនិច្ឆ័យរវាងពួកយើង។ ហើយអល់ឡោះគឺជាអ្នកវិនិច្ឆ័យដ៏ប្រសើរបំផុត។

۞ قَالَ ٱلۡمَلَأُ ٱلَّذِينَ ٱسۡتَكۡبَرُواْ مِن قَوۡمِهِۦ
لَنُخۡرِجَنَّكَ يَٰشُعَيۡبُ وَٱلَّذِينَ ءَامَنُواْ مَعَكَ
مِن قَرۡيَتِنَآ أَوۡ لَتَعُودُنَّ فِي مِلَّتِنَاۚ قَالَ أَوَلَوۡ كُنَّا
كَٰرِهِينَ ٨٨

៨៨-ពួកមេដឹកនាំដែលក្រអឺតក្រទមនៃក្រុមរបស់គេបាននិយាយថា: ឱស្ហ៊ូអែប! ពួកយើងពិតជានឹងបណ្តេញអ្នក និងបណ្តាអ្នកដែលបានរួមជំនឿជាមួយអ្នកចេញពីភូមិស្រុករបស់ពួកយើង លុះត្រាតែពួកអ្នកវិលមករកសាសនារបស់ពួកយើងវិញ។ គាត់បានឆ្លើយថា: ទោះបីជាពួកយើងមិនពេញចិត្តក៏ដោយឬ?

قَدِ ٱفۡتَرَيۡنَا عَلَى ٱللَّهِ كَذِبًا إِنۡ عُدۡنَا فِي
مِلَّتِكُم بَعۡدَ إِذۡ نَجَّىٰنَا ٱللَّهُ مِنۡهَاۚ وَمَا يَكُونُ
لَنَآ أَن نَّعُودَ فِيهَآ إِلَّآ أَن يَشَآءَ ٱللَّهُ رَبُّنَاۚ وَسِعَ
رَبُّنَا كُلَّ شَيۡءٍ عِلۡمًاۚ عَلَى ٱللَّهِ تَوَكَّلۡنَاۚ رَبَّنَا
ٱفۡتَحۡ بَيۡنَنَا وَبَيۡنَ قَوۡمِنَا بِٱلۡحَقِّ وَأَنتَ خَيۡرُ
ٱلۡفَٰتِحِينَ ٨٩

៨៩-ពួកយើងពិតជាបានប្រឌិតនូវការភូតកុហកចំពោះអល់ឡោះជាមិនខាន ប្រសិនបើពួកយើងបានវិលទៅរកសាសនារបស់ពួកអ្នកវិញ ក្រោយពេលដែលអល់ឡោះបានជួយសង្គ្រោះពួកយើងឱ្យចេញផុតពីវា(សាសនាដើម)ហើយនោះ។ ហើយចំពោះពួកយើងនឹងមិនវិលទៅរកវាវិញទេ លើកលែងតែអល់ឡោះជាម្ចាស់របស់ពួកយើងមានចេតនាប៉ុណ្ណោះ។ ម្ចាស់របស់ពួកយើងដឹងជ្រួតជ្រាបលើអ្វីៗទាំងអស់។ ចំពោះអល់ឡោះតែមួយគត់ដែលពួកយើងប្រគល់ការទុកចិត្ត។ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាកាត់សេចក្តីរវាងពួកយើង និងក្រុមរបស់ពួកយើងដោយយុត្តិធម៌ផងចុះ។ ហើយទ្រង់គឺជាអ្នកកាត់សេចក្តីដ៏ប្រសើរបំផុត។

وَقَالَ ٱلۡمَلَأُ ٱلَّذِينَ كَفَرُواْ مِن قَوۡمِهِۦ لَئِنِ
ٱتَّبَعۡتُمۡ شُعَيۡبًا إِنَّكُمۡ إِذٗا لَّخَٰسِرُونَ ٩٠

៩០-ពួកមេដឹកនាំដែលគ្មានជំនឿនៃក្រុមរបស់គេបាននិយាយថា: ប្រសិនបើពួកអ្នកតាមស្ហ៊ូអែបនោះ ពិតប្រាកដណាស់ ពួកអ្នកនឹងក្លាយជាអ្នកដែលខាតបង់ជាមិនខាន។

فَأَخَذَتۡهُمُ ٱلرَّجۡفَةُ فَأَصۡبَحُواْ فِي دَارِهِمۡ
جَٰثِمِينَ ٩١

៩១-ពេលនោះការរញ្ជួយដីបានឆក់យកជីវិតរបស់ពួកគេ និងធ្វើឱ្យពួកគេស្លាប់នៅក្នុងផ្ទះរបស់ពួកគេ។

ٱلَّذِينَ كَذَّبُواْ شُعَيۡبٗا كَأَن لَّمۡ يَغۡنَوۡاْ فِيهَاۚ
ٱلَّذِينَ كَذَّبُواْ شُعَيۡبٗا كَانُواْ هُمُ
ٱلۡخَٰسِرِينَ ٩٢

៩២-ពួកដែលបានបដិសេធនឹងស្ហ៊ូអែបគឺហាក់ដូចជាមិនបានរស់នៅទីនេះ(ភូមិស្រុកដែលអល់ឡោះបានបំផ្លាញ)។ ពួកដែលបានបដិសេធនឹងស្ហ៊ូអែប ពួកគេគឺជាពួកដែលខាតបង់។

فَتَوَلَّىٰ عَنْهُمْ وَقَالَ يَٰقَوْمِ لَقَدْ أَبْلَغْتُكُمْ رِسَٰلَٰتِ رَبِّي وَنَصَحْتُ لَكُمْ ۖ فَكَيْفَ ءَاسَىٰ عَلَىٰ قَوْمٍ كَٰفِرِينَ ﴿٩٣﴾

៩៣-បន្ទាប់មកគេ(ស្វ៊ូអែប)បានបែរចេញពីពួកគេ ហើយបានពោលថា: ឱក្រុមរបស់ខ្ញុំ! ខ្ញុំពិតជាបានផ្ដល់សារនៃម្ចាស់របស់ខ្ញុំឱ្យពួកអ្នក ហើយខ្ញុំក៏បានផ្ដល់ដំបូន្មានដល់ពួកអ្នកដែរ។ ដូច្នេះ តើឱ្យខ្ញុំសោកស្ដាយចំពោះក្រុមដែលគ្មានជំនឿយ៉ាងដូចម្ដេចទៅ?

وَمَآ أَرْسَلْنَا فِي قَرْيَةٍ مِّن نَّبِيٍّ إِلَّآ أَخَذْنَآ أَهْلَهَا بِٱلْبَأْسَآءِ وَٱلضَّرَّآءِ لَعَلَّهُمْ يَضَّرَّعُونَ ﴿٩٤﴾

៩៤-ហើយយើងមិនបានបញ្ជូនណាពីទៅក្នុងភូមិស្រុកណាមួយឡើយ លើកលែងតែយើងឱ្យពួកគេនោះជួបប្រទះនូវភាពវេទនាក្រខ្សត់ និងគ្រោះមហន្តរាយ សង្ឃឹមថាពួកគេនឹងបន្ទាបខ្លួន(សារភាពកំហុស)។

ثُمَّ بَدَّلْنَا مَكَانَ ٱلسَّيِّئَةِ ٱلْحَسَنَةَ حَتَّىٰ عَفَوا۟ وَّقَالُوا۟ قَدْ مَسَّ ءَابَآءَنَا ٱلضَّرَّآءُ وَٱلسَّرَّآءُ فَأَخَذْنَٰهُم بَغْتَةً وَهُمْ لَا يَشْعُرُونَ ﴿٩٥﴾

៩៥-ក្រោយមកយើងបានផ្លាស់ប្ដូរពីស្ថានភាពអាក្រក់ទៅល្អវិញ រហូតដល់ពួកគេមានសុខភាពល្អ(មានកូនចៅនិងទ្រព្យសម្បត្តិច្រើន) ហើយពួកគេបែរជាបាននិយាយថា: ជាការពិតណាស់ ជីដូនជីតារបស់ពួកយើងក៏ធ្លាប់ជួបប្រទះនូវគ្រោះមហន្តរាយ និងភាពសប្បាយរីករាយនេះដែរ។ ដូច្នេះ យើងក៏បានបញ្ចុះទារុណកម្មទៅលើពួកគេភ្លាមៗដោយពួកគេមិនដឹងខ្លួន។

وَلَوْ أَنَّ أَهْلَ ٱلْقُرَىٰٓ ءَامَنُوا۟ وَٱتَّقَوْا۟ لَفَتَحْنَا عَلَيْهِم بَرَكَٰتٍ مِّنَ ٱلسَّمَآءِ وَٱلْأَرْضِ وَلَٰكِن كَذَّبُوا۟ فَأَخَذْنَٰهُم بِمَا كَانُوا۟ يَكْسِبُونَ ﴿٩٦﴾

៩៦-ប្រសិនបើអ្នកភូមិស្រុកទាំងនោះបានជឿ និងកោតខ្លាចអល់ឡោះ យើងពិតជាផ្ដល់ឱ្យពួកគេនូវពរជ័យជាច្រើនពីលើមេឃនិងផែនដីជាមិនខាន តែពួកគេបែរជាបានបដិសេធទៅវិញ។ ដូច្នេះ យើងក៏បានបញ្ចុះទារុណកម្មទៅលើពួកគេដោយសារតែអ្វីដែលពួកគេបានប្រព្រឹត្ត។

أَفَأَمِنَ أَهْلُ ٱلْقُرَىٰٓ أَن يَأْتِيَهُم بَأْسُنَا بَيَٰتًا وَهُمْ نَآئِمُونَ ﴿٩٧﴾

៩៧-តើអ្នកភូមិស្រុកទាំងនោះ(គិតថា) ពួកគេអាចគេចផុតពីទារុណកម្មរបស់យើងដែលមកដល់ពួកគេនៅពេលយប់ ខណៈដែលពួកគេកំពុងដេកលក់នោះឬ?

أَوَأَمِنَ أَهْلُ ٱلْقُرَىٰٓ أَن يَأْتِيَهُم بَأْسُنَا ضُحًى وَهُمْ يَلْعَبُونَ ﴿٩٨﴾

៩៨-តើអ្នកភូមិស្រុកទាំងនោះ(គិតថា) ពួកគេអាចគេចផុតពីទារុណកម្មរបស់យើងដែលមកដល់ពួកគេនៅពេលព្រឹក ខណៈដែលពួកគេកំពុងលេងសប្បាយនោះឬ?

أَفَأَمِنُوا۟ مَكْرَ ٱللَّهِ ۚ فَلَا يَأْمَنُ مَكْرَ ٱللَّهِ إِلَّا ٱلْقَوْمُ ٱلْخَٰسِرُونَ ﴿٩٩﴾

៩៩-តើពួកគេគិតថា អាចគេចផុតពីទារុណកម្មរបស់អល់ឡោះឬ? គ្មានអ្នកណាគិតថា អាចគេចផុតពីទារុណកម្មរបស់អល់ឡោះ

ឡើយ លើកលែងតែពួកដែលខាតបង់ប៉ុណ្ណោះ ។

أَوَلَمۡ يَهۡدِ لِلَّذِينَ يَرِثُونَ ٱلۡأَرۡضَ مِنۢ بَعۡدِ أَهۡلِهَآ أَن لَّوۡ نَشَآءُ أَصَبۡنَٰهُم بِذُنُوبِهِمۡۚ وَنَطۡبَعُ عَلَىٰ قُلُوبِهِمۡ فَهُمۡ لَا يَسۡمَعُونَ ١٠٠

១០០-តើមិនទាន់ច្បាស់លាស់សម្រាប់ពួកដែលទទួលមរតកនៅលើផែនដីបន្ទាប់ពីអ្នកជំនាន់មុន(បានវិនាសអន្តរាយ)ទេឬ ប្រសិនបើយើងមានចេតនានោះ យើងនឹងដាក់ទារុណកម្មទៅលើពួកគេរួចទៅហើយដោយសារបាបកម្មរបស់ពួកគេ ហើយយើងនឹងបោះត្រាភ្ជិតទៅលើចិត្តរបស់ពួកគេ ក្រោយមកពួកគេមិនស្តាប់ឮ(ដំបូន្មានល្អ)នោះ?

تِلۡكَ ٱلۡقُرَىٰ نَقُصُّ عَلَيۡكَ مِنۡ أَنۢبَآئِهَاۚ وَلَقَدۡ جَآءَتۡهُمۡ رُسُلُهُم بِٱلۡبَيِّنَٰتِ فَمَا كَانُواْ لِيُؤۡمِنُواْ بِمَا كَذَّبُواْ مِن قَبۡلُۚ كَذَٰلِكَ يَطۡبَعُ ٱللَّهُ عَلَىٰ قُلُوبِ ٱلۡكَٰفِرِينَ ١٠١

១០១-ភូមិស្រុកទាំងនោះ យើងនឹងនិទានប្រាប់អ្នក(មូហាំម៉ាត់) នូវរឿងរ៉ាវរបស់វា ។ ហើយពិតប្រាកដណាស់ បណ្តាអ្នកនាំសាររបស់ពួកគេបានមកដល់ពួកគេដោយនាំមកនូវភស្តុតាងជាច្រើន ក៏ប៉ុន្តែពួកគេមិនបានជឿនូវអ្វីដែលពួកគេបានបដិសេធពីមុននោះឡើយ ។ ដូច្នោះដែរ អល់ឡោះបោះត្រាភ្ជិតទៅលើចិត្តពួកដែលគ្មានជំនឿ ។

وَمَا وَجَدۡنَا لِأَكۡثَرِهِم مِّنۡ عَهۡدٖۖ وَإِن وَجَدۡنَآ أَكۡثَرَهُمۡ لَفَٰسِقِينَ ١٠٢

១០២-ហើយភាគច្រើននៃពួកគេដែលយើងបានជួបប្រទះនោះ មិនមែនជាអ្នកគោរពកិច្ចសន្យាឡើយ ។ តែយើងបានជួបប្រទះពួកគេភាគច្រើនជាពួកប្រព្រឹត្តបទល្មើស ។

ثُمَّ بَعَثۡنَا مِنۢ بَعۡدِهِم مُّوسَىٰ بِـَٔايَٰتِنَآ إِلَىٰ فِرۡعَوۡنَ وَمَلَإِيْهِۦ فَظَلَمُواْ بِهَاۖ فَٱنظُرۡ كَيۡفَ كَانَ عَٰقِبَةُ ٱلۡمُفۡسِدِينَ ١٠٣

១០៣-បន្ទាប់មក យើងបានបញ្ជូនមូសាក្រោយពីពួកគេ(អ្នកនាំសារមុនៗ)ជាមួយនឹងមុជីហ្សាត់ជាច្រើនរបស់យើងទៅកាន់ហ្វៀរអោន និងបណ្តាមេដឹកនាំរបស់គេ តែពួកគេបានប្រឆាំងនឹងវា ។ ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)មើលចុះ! តើលទ្ធផលចុងក្រោយរបស់ពួកល្មើសនោះយ៉ាងណាដែរ?

وَقَالَ مُوسَىٰ يَٰفِرۡعَوۡنُ إِنِّي رَسُولٞ مِّن رَّبِّ ٱلۡعَٰلَمِينَ ١٠٤

១០៤-មូសាបានពោលថាៈ ឱហ្វៀរអោន! ពិតប្រាកដណាស់ ខ្ញុំគឺជាអ្នកនាំសារម្នាក់មកពីម្ចាស់ដែលគ្រប់គ្រងពិភពទាំងអស់ ។

حَقِيقٌ عَلَىٰٓ أَن لَّآ أَقُولَ عَلَى ٱللَّهِ إِلَّا ٱلۡحَقَّۚ قَدۡ جِئۡتُكُم بِبَيِّنَةٖ مِّن رَّبِّكُمۡ فَأَرۡسِلۡ مَعِيَ بَنِيٓ إِسۡرَٰٓءِيلَ ١٠٥

១០៥-សមរម្យសម្រាប់ខ្ញុំនោះ គឺខ្ញុំមិននិយាយអ្វីអំពីអល់ឡោះក្រៅពីការពិតឡើយ ។ ពិតប្រាកដណាស់ ខ្ញុំបាននាំមកឱ្យអ្នកនូវភស្តុតាងដ៏ច្បាស់លាស់ពីម្ចាស់របស់អ្នក ដូច្នេះសូមអ្នកមេត្តាដោះលែងអំបូរអ៊ីស្រាអែលឱ្យធ្វើដំណើរចាកចេញទៅជាមួយខ្ញុំផង ។

قَالَ إِن كُنتَ جِئۡتَ بِـَٔايَةٖ فَأۡتِ بِهَآ إِن كُنتَ
مِنَ ٱلصَّٰدِقِينَ ١٠٦

១០៦-ហ្វៀរអោនបាននិយាយថាៈ ប្រសិនបើអ្នកបាននាំភស្តុតាងមកមែន ចូរអ្នកបង្ហាញវាមក ប្រសិនបើអ្នកស្ថិតក្នុងចំណោមអ្នកដែលនិយាយពិតមែននោះ ។

فَأَلۡقَىٰ عَصَاهُ فَإِذَا هِيَ ثُعۡبَانٞ مُّبِينٞ ١٠٧

១០៧-បន្ទាប់មកមូសាបានបោះដំបងរបស់គេ រំពេចនោះវាក៏ក្លាយទៅជាសត្វពស់យ៉ាងពិតប្រាកដ ។

وَنَزَعَ يَدَهُۥ فَإِذَا هِيَ بَيۡضَآءُ لِلنَّٰظِرِينَ ١٠٨

១០៨-ហើយមូសាក៏បានដកដៃរបស់គេ( ចេញពីហោប៉ៅ) រំពេចនោះវាក៏ក្លាយជាពន្លឺពណ៌សចែងចាំងសម្រាប់អ្នកទស្សនាទាំងអស់ ។

قَالَ ٱلۡمَلَأُ مِن قَوۡمِ فِرۡعَوۡنَ إِنَّ هَٰذَا
لَسَٰحِرٌ عَلِيمٞ ١٠٩

១០៩-ពួកមេដឹកនាំនៃក្រុមហ្វៀរអោនបាននិយាយថាៈ តាមពិត នេះគ្រាន់តែជាអ្នកមន្តអាគមដ៏ស្ទាត់ជំនាញប៉ុណ្ណោះ ។

يُرِيدُ أَن يُخۡرِجَكُم مِّنۡ أَرۡضِكُمۡۖ فَمَاذَا
تَأۡمُرُونَ ١١٠

១១០-គេចង់បណ្តេញពួកអ្នកចេញពីទឹកដីរបស់ពួកអ្នក ។ ( ហ្វៀរអោនបានសួរថា) ដូច្នេះតើពួកអ្នកត្រូវឱ្យខ្ញុំធ្វើដូចម្តេច?

قَالُوٓاْ أَرۡجِهۡ وَأَخَاهُ وَأَرۡسِلۡ فِي ٱلۡمَدَآئِنِ
حَٰشِرِينَ ١١١

១១១-ពួកគេបានឆ្លើយថាៈ សូមអ្នកពន្យារពេលឱ្យគេ និងបងប្អូនរបស់គេសិនចុះ ហើយសូមអ្នកបញ្ជូនមនុស្សទៅគ្រប់ទីក្រុងដើម្បីប្រមូល( អ្នកចេះប្រើមន្តអាគមទាំងអស់) ។

يَأۡتُوكَ بِكُلِّ سَٰحِرٍ عَلِيمٖ ١١٢

១១២-ពួកគេនឹងនាំមកឱ្យអ្នកនូវរាល់អ្នកចេះមន្តអាគមដែលស្ទាត់ជំនាញបំផុត ។

وَجَآءَ ٱلسَّحَرَةُ فِرۡعَوۡنَ قَالُوٓاْ إِنَّ لَنَا
لَأَجۡرًا إِن كُنَّا نَحۡنُ ٱلۡغَٰلِبِينَ ١١٣

១១៣-ពួកដែលប្រើមន្តអាគមទាំងអស់បានមកដល់ហ្វៀរអោន ហើយពួកគេបាននិយាយថាៈ ពិតប្រាកដណាស់ តើមានរង្វាន់សម្រាប់ពួកយើងដែរឬទេ ប្រសិនបើពួកយើងជាអ្នកទទួលជ័យជំនះនោះ?

قَالَ نَعَمۡ وَإِنَّكُمۡ لَمِنَ ٱلۡمُقَرَّبِينَ ١١٤

១១៤-គេ( ហ្វៀរអោន) បានឆ្លើយថាៈ ពិតជាមាន! ហើយពិតប្រាកដណាស់ ពួកអ្នកនឹងស្ថិតក្នុងចំណោមអ្នកជំនិត( របស់យើង) ។

قَالُواْ يَٰمُوسَىٰٓ إِمَّآ أَن تُلۡقِيَ وَإِمَّآ أَن نَّكُونَ
نَحۡنُ ٱلۡمُلۡقِينَ ١١٥

១១៥-ពួកគេ( គ្រូមន្តអាគម) បាននិយាយថាៈ ឱមូសា! តើអ្នកបោះ( ដំបងរបស់អ្នក) មុន ឬពួកយើងបោះមុន?

قَالَ أَلۡقُواْۖ فَلَمَّآ أَلۡقَوۡاْ سَحَرُوٓاْ أَعۡيُنَ

១១៦-គេ( មូសា) បានឆ្លើយថាៈ ចូរពួកអ្នកបោះមុនចុះ! នៅពេលដែលពួកគេបានបោះហើយនោះ ពួកគេបានប្រើមន្តអាគម

ٱلنَّاسِ وَٱسۡتَرۡهَبُوهُمۡ وَجَآءُو بِسِحۡرٍ عَظِيمٖ ﴿١١٦﴾

បំភាន់ភ្នែកមនុស្ស( ធ្វើឱ្យមើលឃើញដំបង និងខ្សែថាជាសត្វពស់ដ៏ធំ) ហើយបានធ្វើឱ្យពួកគេ( មនុស្ស)ភ័យខ្លាច និងបាននាំមកនូវមន្តអាគមដ៏អស្ចារ្យ ។

۞ وَأَوۡحَيۡنَآ إِلَىٰ مُوسَىٰٓ أَنۡ أَلۡقِ عَصَاكَۖ فَإِذَا هِيَ تَلۡقَفُ مَا يَأۡفِكُونَ ﴿١١٧﴾

១១៧-យើងបានផ្តល់វ៉ាហ៊ីទៅកាន់មូសាថា: ចូរអ្នកបោះដំបងរបស់អ្នកទៅ! ( មូសាក៏បានបោះដំបង)រំពេចនោះវាក៏ទៅលេបអ្វីៗដែលពួកគេកំពុងបំភាន់នោះ ។

فَوَقَعَ ٱلۡحَقُّ وَبَطَلَ مَا كَانُواْ يَعۡمَلُونَ ﴿١١٨﴾

១១៨-បន្ទាប់មក ការពិតក៏បានលេចឡើង ហើយអ្វីដែលពួកគេបានធ្វើគ្មានប្រសិទ្ធភាពឡើយ ។

فَغُلِبُواْ هُنَالِكَ وَٱنقَلَبُواْ صَٰغِرِينَ ﴿١١٩﴾

១១៩-ដូច្នេះពួកគេត្រូវបានបរាជ័យនៅទីនោះ ហើយពួកគេ( ហ្វៀរអោននិងបរិវា)ក៏បានចាកចេញដោយអាម៉ាស់បំផុត ។

وَأُلۡقِيَ ٱلسَّحَرَةُ سَٰجِدِينَ ﴿١٢٠﴾

១២០-ហើយពួកដែលប្រើមន្តអាគមទាំងអស់នោះក៏លំឱនកាយស៊ុជូត ។

قَالُوٓاْ ءَامَنَّا بِرَبِّ ٱلۡعَٰلَمِينَ ﴿١٢١﴾

១២១-ដោយពួកគេបាននិយាយថា: ពួកយើងជឿនឹងម្ចាស់ពិភពទាំងអស់ហើយ ។

رَبِّ مُوسَىٰ وَهَٰرُونَ ﴿١٢٢﴾

១២២-ដែលជាម្ចាស់របស់មូសា និងហារូន ។

قَالَ فِرۡعَوۡنُ ءَامَنتُم بِهِۦ قَبۡلَ أَنۡ ءَاذَنَ لَكُمۡۖ
إِنَّ هَٰذَا لَمَكۡرٞ مَّكَرۡتُمُوهُ فِي ٱلۡمَدِينَةِ
لِتُخۡرِجُواْ مِنۡهَآ أَهۡلَهَاۖ فَسَوۡفَ تَعۡلَمُونَ ﴿١٢٣﴾

១២៣-ហ្វៀរអោនបានស្រែកថា: តើពួកឯងជឿនឹងវា( មូសា) មុននឹងយើងអនុញ្ញាតឱ្យពួកឯងឬ? ពិតប្រាកដណាស់ នេះគឺជាល្បិចកលដែលពួកអ្នកបានប្រើវានៅក្នុងទីក្រុង( អេហ្ស៊ីប) នេះដើម្បីពួកអ្នកបណ្តេញអ្នកដែលនៅទីនេះចេញពីវា( ទីក្រុង) ។ ដូច្នេះពួកអ្នកគង់តែនឹងដឹង ។

لَأُقَطِّعَنَّ أَيۡدِيَكُمۡ وَأَرۡجُلَكُم مِّنۡ خِلَٰفٖ ثُمَّ
لَأُصَلِّبَنَّكُمۡ أَجۡمَعِينَ ﴿١٢٤﴾

១២៤-យើងពិតជានឹងកាត់ដៃជើងរបស់ពួកឯងឆ្លាស់គ្នា( កាត់ដៃស្តាំនិងជើងឆ្វេង ឬដៃឆ្វេងនិងជើងស្តាំ) ក្រោយមកយើងពិតជានឹងឆ្កាងពួកឯងទាំងអស់គ្នា ។

قَالُوٓاْ إِنَّآ إِلَىٰ رَبِّنَا مُنقَلِبُونَ ﴿١٢٥﴾

១២៥-ពួកគេ( មន្តអាគម)បានតបវិញថា: ពិតប្រាកដណាស់ ពួកយើងវិលទៅរកម្ចាស់( អល់ឡោះ)របស់ពួកយើងវិញហើយ ។

وَمَا تَنقِمُ مِنَّآ إِلَّآ أَنۡ ءَامَنَّا بِـَٔايَٰتِ رَبِّنَا

១២៦- អ្នកមិនសងសឹកនឹងពួកយើងទេ លើកលែងតែដោយសារពួកយើងមានជំនឿនឹងបណ្តាភស្តុតាងនៃម្ចាស់របស់ពួកយើង

لَمَّا جَآءَتۡنَاۚ رَبَّنَآ أَفۡرِغۡ عَلَيۡنَا صَبۡرٗا وَتَوَفَّنَا
مُسۡلِمِينَ ﴿١٢٦﴾

وَقَالَ ٱلۡمَلَأُ مِن قَوۡمِ فِرۡعَوۡنَ أَتَذَرُ مُوسَىٰ
وَقَوۡمَهُۥ لِيُفۡسِدُواْ فِي ٱلۡأَرۡضِ وَيَذَرَكَ
وَءَالِهَتَكَۚ قَالَ سَنُقَتِّلُ أَبۡنَآءَهُمۡ وَنَسۡتَحۡيِۦ
نِسَآءَهُمۡ وَإِنَّا فَوۡقَهُمۡ قَٰهِرُونَ ﴿١٢٧﴾

قَالَ مُوسَىٰ لِقَوۡمِهِ ٱسۡتَعِينُواْ بِٱللَّهِ وَٱصۡبِرُوٓاْۖ
إِنَّ ٱلۡأَرۡضَ لِلَّهِ يُورِثُهَا مَن يَشَآءُ مِنۡ
عِبَادِهِۦۖ وَٱلۡعَٰقِبَةُ لِلۡمُتَّقِينَ ﴿١٢٨﴾

قَالُوٓاْ أُوذِينَا مِن قَبۡلِ أَن تَأۡتِيَنَا وَمِنۢ بَعۡدِ مَا
جِئۡتَنَاۚ قَالَ عَسَىٰ رَبُّكُمۡ أَن يُهۡلِكَ
عَدُوَّكُمۡ وَيَسۡتَخۡلِفَكُمۡ فِي ٱلۡأَرۡضِ
فَيَنظُرَ كَيۡفَ تَعۡمَلُونَ ﴿١٢٩﴾

وَلَقَدۡ أَخَذۡنَآ ءَالَ فِرۡعَوۡنَ بِٱلسِّنِينَ وَنَقۡصٖ
مِّنَ ٱلثَّمَرَٰتِ لَعَلَّهُمۡ يَذَّكَّرُونَ ﴿١٣٠﴾

فَإِذَا جَآءَتۡهُمُ ٱلۡحَسَنَةُ قَالُواْ لَنَا هَٰذِهِۦۖ وَإِن
تُصِبۡهُمۡ سَيِّئَةٞ يَطَّيَّرُواْ بِمُوسَىٰ وَمَن مَّعَهُۥٓۗ أَلَآ
إِنَّمَا طَٰٓئِرُهُمۡ عِندَ ٱللَّهِ وَلَٰكِنَّ أَكۡثَرَهُمۡ لَا

ពេលដែលវាបានមកដល់ពួកយើង។ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាប្រទានការអត់ធ្មត់ដល់ពួកយើង និងប្រទានឱ្យពួកយើងបាន ស្លាប់ក្នុងនាមជាមូស្លីមផងចុះ។

១២៧-ពួកមេដឹកនាំនៃក្រុមរបស់ហ្វៀរអោនបាននិយាយថាៈ តើលោក(ហ្វៀរអោន)បណ្តោយឱ្យមូសា និងបក្សពួករបស់គេបង្កវិនាសកម្មនៅលើផែនដី ព្រមទាំងគេបោះបង់អ្នក និងម្ចាស់របស់អ្នកឬ? គេ(ហ្វៀរអោន)បានតបថាៈ (ទេ!) យើងនឹងសម្លាប់កូនប្រុសរបស់ពួកគេទាំងអស់ តែពួកយើងនឹងទុកជីវិតឱ្យកូនស្រីរបស់ពួកគេ ហើយពិតប្រាកដណាស់ ពួកយើងជាអ្នកមានអំណាចលើពួកគេទាំងអស់។

១២៨-មូសាបានពោលទៅកាន់ក្រុមរបស់គាត់ថាៈ ចូរពួកអ្នកបួងសួងសុំឱ្យអល់ឡោះជួយ ហើយចូរពួកអ្នកអត់ធ្មត់។ ពិតប្រាកដណាស់ ផែនដីនេះជាកម្មសិទ្ធិរបស់អល់ឡោះ ដោយទ្រង់នឹងផ្តល់វាឱ្យនរណាដែលទ្រង់មានចេតនាក្នុងចំណោមខ្ញុំរបស់ទ្រង់។ហើយលទ្ធផលដ៏ប្រសើរនេះ គឺសម្រាប់បណ្តាអ្នកដែលកោតខ្លាចអល់ឡោះ។

១២៩-ពួកគេបាននិយាយថាៈ ពួកយើងត្រូវបានគេធ្វើបាបតាំងពីមុនអ្នកមកដល់ពួកយើង(មុនពេលអ្នកនាំភស្តុតាងមក)មកម្ល៉េះ និងក្រោយពេលដែលអ្នកបានមកដល់ពួកយើងទៀតផង។ គាត់បានឆ្លើយថាៈ សង្ឃឹមថា ម្ចាស់របស់ពួកអ្នកនឹងកំទេចសត្រូវរបស់ពួកអ្នក រួចទ្រង់នឹងឱ្យពួកអ្នកគ្រប់គ្រងនៅលើផែនដីវិញ ហើយទ្រង់នឹងរង់ចាំមើលតើពួកអ្នកនឹងធ្វើយ៉ាងណា(ដឹងគុណឬប្រឆាំង)?

១៣០-ជាការពិតណាស់ យើងបានដាក់ទណ្ឌកម្មចំពោះក្រុមហ្វៀរអោននូវគ្រោះរាំងស្ងួតជាច្រើនឆ្នាំ និងកាត់បន្ថយភោគផលជាច្រើនដើម្បីឱ្យពួកគេចងចាំ។

១៣១-ហើយនៅពេលដែលផលល្អបានមកដល់ពួកគេ ពួកគេនិយាយថាៈ ទាំងនេះវាសមជារបស់ពួកយើងណាស់ តែប្រសិនបើផលអាក្រក់(គ្រោះរាំងស្ងួតជាដើម)បានមកដល់ពួកគេវិញនោះ ពួកគេចោទថា គឺបណ្តាលមកពីមូសា និងអ្នកដែលនៅជាមួយគេ។

يَعۡلَمُونَ ١٣١

ត្រូវដឹងថា ពិតប្រាកដណាស់ ផលអាក្រក់របស់ពួកគេនោះគឺមកពីអល់ឡោះទេ ប៉ុន្តែពួកគេភាគច្រើនមិនដឹងឡើយ។

وَقَالُواْ مَهۡمَا تَأۡتِنَا بِهِۦ مِنۡ ءَايَةٖ لِّتَسۡحَرَنَا بِهَا
فَمَا نَحۡنُ لَكَ بِمُؤۡمِنِينَ ١٣٢

១៣២-ហើយពួកគេបាននិយាយថា៖ ទោះបីជាអ្នក(មូសា) យកភស្តុតាងណាមួយមកបង្ហាញពួកយើង ដើម្បីអូសទាញពួកយើងតាមរយៈវា(ឱ្យចេញពីហ្វៀរអោន) ក៏ដោយ ក៏ពួកយើងមិនជឿអ្នកដែរ។

فَأَرۡسَلۡنَا عَلَيۡهِمُ ٱلطُّوفَانَ وَٱلۡجَرَادَ وَٱلۡقُمَّلَ
وَٱلضَّفَادِعَ وَٱلدَّمَ ءَايَٰتٖ مُّفَصَّلَٰتٖ
فَٱسۡتَكۡبَرُواْ وَكَانُواْ قَوۡمٗا مُّجۡرِمِينَ ١٣٣

១៣៣-ដូច្នេះ យើងបានបញ្ជូនទៅលើពួកគេ(ជាការដាក់ទណ្ឌកម្ម) នូវទឹកជំនន់ សត្វកណ្ដូប សត្វចៃ សត្វកង្កែប និងឈាម ដែលជាភស្តុតាង៧ដាច់ដោយឡែកពីគ្នា។ ទោះជាដូចនោះក្ដី ក៏ពួកគេនៅតែក្រអឺតក្រទមដដែល។ ហើយពួកគេគឺជាក្រុមដែលបានប្រព្រឹត្តអាក្រក់មែន។

وَلَمَّا وَقَعَ عَلَيۡهِمُ ٱلرِّجۡزُ قَالُواْ يَٰمُوسَى ٱدۡعُ
لَنَا رَبَّكَ بِمَا عَهِدَ عِندَكَۖ لَئِن كَشَفۡتَ
عَنَّا ٱلرِّجۡزَ لَنُؤۡمِنَنَّ لَكَ وَلَنُرۡسِلَنَّ مَعَكَ بَنِيٓ
إِسۡرَٰٓءِيلَ ١٣٤

១៣៤-នៅពេលដែលទណ្ឌកម្មបានធ្លាក់មកលើពួកគេ ពួកគេបាននិយាយ(អង្វរ)ថា៖ ឱមូសា! សូមអ្នកបួងសួងសុំពីម្ចាស់របស់អ្នកឱ្យពួកយើងនូវអ្វីដែលទ្រង់បានសន្យាជាមួយអ្នក(ថានឹងដកទណ្ឌកម្ម បើពួកយើងសារភាពកំហុស)ផង។ ជាការពិតណាស់ បើអ្នកអាចដកទណ្ឌកម្មនេះចេញពីពួកយើងបាន ពួកយើងច្បាស់ជានឹងជឿលើអ្នក ហើយពួកយើងពិតជានឹងដោះលែងអំបូរអ៊ីស្រាអែលឱ្យទៅជាមួយអ្នក។

فَلَمَّا كَشَفۡنَا عَنۡهُمُ ٱلرِّجۡزَ إِلَىٰٓ أَجَلٍ هُم
بَٰلِغُوهُ إِذَا هُمۡ يَنكُثُونَ ١٣٥

១៣៥-នៅពេលដែលយើងបានដកទណ្ឌកម្មចេញពីពួកគេទៅកាន់ពេលកំណត់ដាក់លើពួកគេនោះ ស្រាប់តែពួកគេក្បត់កិច្ចសន្យាទៅវិញ។

فَٱنتَقَمۡنَا مِنۡهُمۡ فَأَغۡرَقۡنَٰهُمۡ فِي ٱلۡيَمِّ بِأَنَّهُمۡ
كَذَّبُواْ بِـَٔايَٰتِنَا وَكَانُواْ عَنۡهَا
غَٰفِلِينَ ١٣٦

១៣៦-ដូច្នេះយើងបានផ្ដន្ទាទោសពួកគេដោយយើងបានពន្លិចពួកគេទៅក្នុងសមុទ្រ ដោយសារតែពួកគេបានបដិសេធនឹងបណ្ដាភស្តុតាងរបស់យើង និងបានធ្វេសប្រហែសចំពោះវា។

وَأَوۡرَثۡنَا ٱلۡقَوۡمَ ٱلَّذِينَ كَانُواْ
يُسۡتَضۡعَفُونَ مَشَٰرِقَ ٱلۡأَرۡضِ وَمَغَٰرِبَهَا

១៣៧-ហើយយើងបានផ្ដល់មរតកឱ្យពួកដែលធ្លាប់គេជិះជាន់ទិសខាងកើត និងខាងលិចនៃផែនដីដែលយើងបានធ្វើឱ្យវាមានការរីកចំរើន។ ពាក្យសន្យាដ៏ល្អឥតខ្ចោះរបស់ម្ចាស់អ្នក(មូហាំម៉ាត់)

ٱلَّتِي بَٰرَكۡنَا فِيهَاۖ وَتَمَّتۡ كَلِمَتُ رَبِّكَ
ٱلۡحُسۡنَىٰ عَلَىٰ بَنِيٓ إِسۡرَٰٓءِيلَ بِمَا صَبَرُواْۖ
وَدَمَّرۡنَا مَا كَانَ يَصۡنَعُ فِرۡعَوۡنُ وَقَوۡمُهُۥ
وَمَا كَانُواْ يَعۡرِشُونَ ١٣٧

បានបំពេញទៅឱ្យអំបូរអ៊ីស្រាអែលដោយសារពួកគេបានអត់ធ្មត់កន្លងមក។ ហើយយើងបានកំទេចចោលនូវអ្វីដែលហ្វៀរអោន និងបក្សពួករបស់គេបានធ្វើ និងអ្វីដែលពួកគេបានកសាងឡើង។

وَجَٰوَزۡنَا بِبَنِيٓ إِسۡرَٰٓءِيلَ ٱلۡبَحۡرَ فَأَتَوۡاْ عَلَىٰ
قَوۡمٖ يَعۡكُفُونَ عَلَىٰٓ أَصۡنَامٖ لَّهُمۡۚ قَالُواْ
يَٰمُوسَى ٱجۡعَل لَّنَآ إِلَٰهٗا كَمَا لَهُمۡ ءَالِهَةٞۚ
قَالَ إِنَّكُمۡ قَوۡمٞ تَجۡهَلُونَ ١٣٨

១៣៨-យើងបានចម្លងអំបូរអ៊ីស្រាអែលឱ្យផុតពីសមុទ្រ ហើយពួកគេបានទៅជួបក្រុមមួយដែលកំពុងតែគោរពសក្ការៈចំពោះរូបសំណាករបស់ពួកគេ។ ពួកគេបាននិយាយថា: ឱមូសា! សូមអ្នកធ្វើឱ្យពួកយើងមានម្ចាស់(ដើម្បីគោរពសក្ការៈ) ដូចដែលពួកគេមានម្ចាស់ផង។ គេ(មូសា)បានតបវិញថា: ពិតប្រាកដណាស់ ពួកអ្នកគឺជាក្រុមដែលល្ងង់ខ្លៅ។

إِنَّ هَٰٓؤُلَآءِ مُتَبَّرٞ مَّا هُمۡ فِيهِ وَبَٰطِلٞ مَّا كَانُواْ
يَعۡمَلُونَ ١٣٩

១៣៩-ពិតប្រាកដណាស់ ពួកទាំងនោះនឹងត្រូវគេបំផ្លាញដោយសារតែអ្វីដែលពួកគេងប់ងុលនឹងវា(អំពើស្ហ៊ីក) ហើយអ្វីដែលពួកគេធ្លាប់ធ្វើនោះគឺគ្មានផលឡើយ។

قَالَ أَغَيۡرَ ٱللَّهِ أَبۡغِيكُمۡ إِلَٰهٗا وَهُوَ
فَضَّلَكُمۡ عَلَى ٱلۡعَٰلَمِينَ ١٤٠

១៤០-មូសាបានពោលថា: តើសមដែរឬទេដែលខ្ញុំត្រូវស្វែងរកម្ចាស់ផ្សេងពីអល់ឡោះសម្រាប់ពួកអ្នក ខណៈដែលទ្រង់បានលើកតម្កើងពួកអ្នកជាងគេ(ដោយតែងតាំងអ្នកនាំសារជាច្រើនចេញពីពួកអ្នក)នៅលើពិភពទាំងអស់នោះ?

وَإِذۡ أَنجَيۡنَٰكُم مِّنۡ ءَالِ فِرۡعَوۡنَ
يَسُومُونَكُمۡ سُوٓءَ ٱلۡعَذَابِۖ يُقَتِّلُونَ
أَبۡنَآءَكُمۡ وَيَسۡتَحۡيُونَ نِسَآءَكُمۡۚ وَفِي
ذَٰلِكُم بَلَآءٞ مِّن رَّبِّكُمۡ عَظِيمٞ ١٤١

១៤១-ហើយចូរពួកអ្នកចងចាំ! នៅពេលដែលយើងបានរំដោះពួកអ្នកឱ្យរួចផុតពីបក្សពួកហ្វៀរអោន ដោយពួកគេឱ្យពួកអ្នកភ្លក្សរសជាតិទារុណកម្មយ៉ាងព្រៃផ្សៃ ដោយសម្លាប់កូនប្រុស និងទុកជីវិតកូនស្រីរបស់ពួកអ្នក។ នេះជាការសាកល្បងមួយយ៉ាងធំពីម្ចាស់របស់ពួកអ្នក។

۞وَوَٰعَدۡنَا مُوسَىٰ ثَلَٰثِينَ لَيۡلَةٗ وَأَتۡمَمۡنَٰهَا
بِعَشۡرٖ فَتَمَّ مِيقَٰتُ رَبِّهِۦٓ أَرۡبَعِينَ لَيۡلَةٗۚ
وَقَالَ مُوسَىٰ لِأَخِيهِ هَٰرُونَ ٱخۡلُفۡنِي
فِي قَوۡمِي وَأَصۡلِحۡ وَلَا تَتَّبِعۡ سَبِيلَ

១៤២-យើងបានសន្យាជាមួយមូសារយៈពេលសាមសិបយប់ ហើយយើងបានបន្ថែមដប់យប់ទៀត ទើបពេលវេលាជួបម្ចាស់របស់គេគ្រប់ចំនួនសែសិបយប់។ ហើយមូសាបានពោលទៅកាន់បងប្រុសរបស់គេហារូនថា: អ្នកត្រូវជំនួសកន្លែងខ្ញុំ និងត្រូវណែនាំក្រុមរបស់ខ្ញុំ(ឱ្យពួកគេគោរពសក្ការៈចំពោះអល់ឡោះតែមួយ) ហើយកុំដើរ

តាមមាគ៌ារបស់ពួកដែលបង្កវិនាសកម្មឱ្យសោះ ។

១៤៣-ហើយនៅពេលមូសាបានមកតាមការកំណត់របស់យើង ហើយម្ចាស់របស់គេបានមានបន្ទូលទៅកាន់គេ( ដាក់បញ្ជា និងហាមឃាត់) មូសាបានពោលថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាបង្ហាញដល់ខ្ញុំ ដើម្បីឱ្យខ្ញុំបានមើលឃើញទ្រង់ផង ។ ទ្រង់បានមានបន្ទូលថាៈ អ្នកនឹងមិនអាចមើលឃើញយើងបានឡើយ ប៉ុន្តែចូរអ្នកក្រឡេកមើលទៅភ្នំនោះ( ភ្នំតួរ) បើភ្នំនោះស្ថិតនៅនឹងថ្កល់មួយកន្លែងរបស់វា អ្នកប្រាកដជានឹងឃើញយើង ។ ហើយនៅពេលដែលម្ចាស់របស់គេបានបង្ហាញខ្លួនទៅកាន់ភ្នំនោះ ទ្រង់ក៏បានធ្វើឱ្យភ្នំនោះក្លាយជាធូលី ពេលនោះមូសាបានដួលសន្លប់នៅលើដី ។ នៅពេលដែលមូសាដឹងខ្លួនឡើងវិញ គាត់បានពោលថាៈ ទ្រង់មហាស្អាតស្អំ! ខ្ញុំសូមសារភាពកំហុសចំពោះទ្រង់ ហើយខ្ញុំជាអ្នកមានជំនឿមុនគេ ។

១៤៤-អល់ឡោះបានមានបន្ទូលថាៈ ឱមូសា! ពិតប្រាកដណាស់ យើងបានជ្រើសរើសអ្នកទៅកាន់មនុស្សលោកដោយនាំសារ និងបន្ទូលផ្ទាល់របស់យើង ។ ហេតុនេះ ចូរអ្នកទទួលយកនូវអ្វីដែលយើងបានផ្តល់ឱ្យអ្នក ហើយអ្នកត្រូវស្ថិតនៅក្នុងចំណោមអ្នកដែលដឹងគុណ ។

១៤៥-យើងបានកត់ត្រាឱ្យមូសានៅក្នុងគម្ពីរតាវរ៉ាតគ្រប់អ្វីៗទាំងអស់ ជាការទូន្មាននិងជាការបំភ្លឺនូវអ្វីៗទាំងនោះ ។ ហេតុនេះ ចូរអ្នកទទួលយកវា( គម្ពីរតាវរ៉ាត) ដោយខ្ជាប់ខ្ជួន ហើយចូរអ្នកបង្គាប់បញ្ជាក្រុមរបស់អ្នកឱ្យពួកគេទទួលយកវាដោយប្រសើរបំផុត ។ យើងនឹងបង្ហាញដល់ពួកអ្នកនូវកន្លែងរបស់ពួកជនល្មើស ។

១៤៦-យើងនឹងបង្វែរពួកដែលក្រអឺតក្រទមនៅលើផែនដីដោយគ្មានការពិតចេញពីបណ្តាភស្តុតាងរបស់យើង ហើយបើពួកគេឃើញរាល់ភស្តុតាងវិញនោះ ក៏ពួកគេគ្មានជំនឿនឹងវាដែរ ។ ហើយបើពួកគេឃើញមាគ៌ាត្រឹមត្រូវ ពួកគេក៏មិនទទួលយកវាធ្វើជាមាគ៌ាដែរ ។ តែបើពួកគេឃើញមាគ៌ាដែលវង្វេងវិញនោះ ពួកគេទទួលយកវាធ្វើជាមាគ៌ាភ្លាម ។ នោះដោយសារតែពួកគេបានបដិសេធនឹង

ٱلۡمُفۡسِدِينَ ﴿١٤٢﴾
وَلَمَّا جَآءَ مُوسَىٰ لِمِيقَٰتِنَا وَكَلَّمَهُۥ رَبُّهُۥ قَالَ
رَبِّ أَرِنِيٓ أَنظُرۡ إِلَيۡكَۚ قَالَ لَن تَرَىٰنِي وَلَٰكِنِ
ٱنظُرۡ إِلَى ٱلۡجَبَلِ فَإِنِ ٱسۡتَقَرَّ مَكَانَهُۥ
فَسَوۡفَ تَرَىٰنِيۚ فَلَمَّا تَجَلَّىٰ رَبُّهُۥ لِلۡجَبَلِ
جَعَلَهُۥ دَكّٗا وَخَرَّ مُوسَىٰ صَعِقٗاۚ فَلَمَّآ
أَفَاقَ قَالَ سُبۡحَٰنَكَ تُبۡتُ إِلَيۡكَ
وَأَنَا۠ أَوَّلُ ٱلۡمُؤۡمِنِينَ ﴿١٤٣﴾

قَالَ يَٰمُوسَىٰٓ إِنِّي ٱصۡطَفَيۡتُكَ عَلَى ٱلنَّاسِ
بِرِسَٰلَٰتِي وَبِكَلَٰمِي فَخُذۡ مَآ ءَاتَيۡتُكَ وَكُن
مِّنَ ٱلشَّٰكِرِينَ ﴿١٤٤﴾

وَكَتَبۡنَا لَهُۥ فِي ٱلۡأَلۡوَاحِ مِن كُلِّ شَيۡءٖ
مَّوۡعِظَةٗ وَتَفۡصِيلٗا لِّكُلِّ شَيۡءٖ فَخُذۡهَا بِقُوَّةٖ
وَأۡمُرۡ قَوۡمَكَ يَأۡخُذُواْ بِأَحۡسَنِهَاۚ سَأُوْرِيكُمۡ دَارَ
ٱلۡفَٰسِقِينَ ﴿١٤٥﴾
سَأَصۡرِفُ عَنۡ ءَايَٰتِيَ ٱلَّذِينَ يَتَكَبَّرُونَ فِي
ٱلۡأَرۡضِ بِغَيۡرِ ٱلۡحَقِّ وَإِن يَرَوۡاْ كُلَّ ءَايَةٖ لَّا
يُؤۡمِنُواْ بِهَا وَإِن يَرَوۡاْ سَبِيلَ ٱلرُّشۡدِ لَا
يَتَّخِذُوهُ سَبِيلٗا وَإِن يَرَوۡاْ سَبِيلَ ٱلۡغَيِّ

يَتَّخِذُوهُ سَبِيلًاۚ ذَٰلِكَ بِأَنَّهُمْ كَذَّبُوا۟ بِـَٔايَـٰتِنَا
وَكَانُوا۟ عَنْهَا غَـٰفِلِينَ ﴿١٤٦﴾

បណ្តាភស្តុតាងរបស់យើង និងបានធ្វេសប្រហែសពីវា។

وَٱلَّذِينَ كَذَّبُوا۟ بِـَٔايَـٰتِنَا وَلِقَآءِ ٱلْـَٔاخِرَةِ
حَبِطَتْ أَعْمَـٰلُهُمْۚ هَلْ يُجْزَوْنَ إِلَّا مَا
كَانُوا۟ يَعْمَلُونَ ﴿١٤٧﴾

១៤៧-ពួកដែលបានបដិសេធនឹងបណ្តាភស្តុតាងរបស់យើង និងបានបដិសេធនឹងជំនួបថ្ងៃបរលោកនោះ ទង្វើទាំងឡាយរបស់ពួកគេបានវិនាសអន្តរាយ។ គេ(អល់ឡោះ)មិនតបស្នងឱ្យពួកគេក្រៅពីអ្វីដែលពួកគេបានសាងនោះឡើយ។

وَٱتَّخَذَ قَوْمُ مُوسَىٰ مِنۢ بَعْدِهِۦ مِنْ حُلِيِّهِمْ
عِجْلًا جَسَدًا لَّهُۥ خُوَارٌۚ أَلَمْ يَرَوْا۟ أَنَّهُۥ لَا
يُكَلِّمُهُمْ وَلَا يَهْدِيهِمْ سَبِيلًاۘ ٱتَّخَذُوهُ
وَكَانُوا۟ ظَـٰلِمِينَ ﴿١٤٨﴾

១៤៨-ក្រុមរបស់មូសាបានយកគ្រឿងអលង្ការរបស់ពួកគេធ្វើជារូបរាងកូនគោដែលវាមានសំឡេងក្រោយពីគេអវត្តមាន។ តើពួកគេមិនឃើញទេឬថា វា(កូនគោ)ពិតជាមិនអាចនិយាយ និងមិនអាចចង្អុលបង្ហាញផ្លូវដល់ពួកគេនោះ? ពួកគេបានយកវា(ធ្វើជាម្ចាស់) ហើយពួកគេជាពួកដែលបំពាន។

وَلَمَّا سُقِطَ فِىٓ أَيْدِيهِمْ وَرَأَوْا۟ أَنَّهُمْ قَدْ
ضَلُّوا۟ قَالُوا۟ لَئِن لَّمْ يَرْحَمْنَا رَبُّنَا وَيَغْفِرْ لَنَا
لَنَكُونَنَّ مِنَ ٱلْخَـٰسِرِينَ ﴿١٤٩﴾

១៤៩-នៅពេលពួកគេមានការសោកស្តាយយ៉ាងខ្លាំងដោយទង្វើរបស់ពួកគេ ហើយពួកគេបានឃើញថា ពិតប្រាកដណាស់ ពួកគេពិតជាស្ថិតក្នុងភាពវង្វេង។ ពួកគេក៏បានអង្វរថា: ពិតប្រាកដណាស់ ប្រសិនបើម្ចាស់របស់ពួកយើងមិនអាណិតស្រឡាញ់ និងមិនអភ័យទោសដល់ពួកយើងទេនោះ ច្បាស់ជាពួកយើងនឹងក្លាយជាពួកដែលខាតបង់ជាមិនខាន។

وَلَمَّا رَجَعَ مُوسَىٰٓ إِلَىٰ قَوْمِهِۦ غَضْبَـٰنَ أَسِفًا
قَالَ بِئْسَمَا خَلَفْتُمُونِى مِنۢ بَعْدِىٓۖ أَعَجِلْتُمْ
أَمْرَ رَبِّكُمْۖ وَأَلْقَى ٱلْأَلْوَاحَ وَأَخَذَ بِرَأْسِ
أَخِيهِ يَجُرُّهُۥٓ إِلَيْهِۚ قَالَ ٱبْنَ أُمَّ إِنَّ ٱلْقَوْمَ
ٱسْتَضْعَفُونِى وَكَادُوا۟ يَقْتُلُونَنِى فَلَا تُشْمِتْ
بِىَ ٱلْأَعْدَآءَ وَلَا تَجْعَلْنِى مَعَ ٱلْقَوْمِ
ٱلظَّـٰلِمِينَ ﴿١٥٠﴾

១៥០-នៅពេលដែលមូសាបានវិលត្រលប់មករកក្រុមរបស់គាត់វិញដោយកំហឹង និងសោកស្តាយក៏បានពោលថា: អ្វីដែលពួកអ្នកបានធ្វើ(គោរពកូនគោ)បន្ទាប់ពីខ្ញុំអវត្តមាននោះគឺអាក្រក់បំផុត។ តើពួកអ្នកប្រញាប់ប្រញាល់ជាងកាតព្វកិច្ចនៃម្ចាស់របស់ពួកអ្នកមកដល់ឬ? គាត់បានគ្រវែងផែនគម្ពីរតាវរ៉ត ហើយបានចាប់សក់ក្បាលបងប្រុសគាត់(ហារូន)ទាញកន្ត្រាក់វាមករកគាត់។ ពេលនោះ ហារូនបានពោលថា: ឱកូនប្រុសម្តាយរបស់ខ្ញុំ! ពិតប្រាកដណាស់ ក្រុមនេះបានចាត់ទុកខ្ញុំជាអ្នកទន់ខ្សោយ ហើយពួកគេស្ទើរតែសម្លាប់ខ្ញុំ(នៅពេលខ្ញុំបានឃាត់ពួកគេក្នុងការគោរពកូនគោ)។ ចូរអ្នកកុំធ្វើឱ្យសត្រូវសប្បាយរីករាយដោយសារទណ្ឌកម្មរបស់អ្នកមកលើខ្ញុំ ហើយអ្នកកុំចាត់ទុកខ្ញុំរួមជាមួយក្រុមដែលបំពានអ្វី។

قَالَ رَبِّ ٱغۡفِرۡ لِي وَلِأَخِي وَأَدۡخِلۡنَا فِي رَحۡمَتِكَۖ وَأَنتَ أَرۡحَمُ ٱلرَّٰحِمِينَ ١٥١

១៥១-មូសាបានបួងសួងសុំថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាអភ័យទោសដល់ខ្ញុំ និងបងប្រុសរបស់ខ្ញុំ ព្រមទាំងបញ្ចូលពួកយើងឱ្យស្ថិតក្រោមការអាណិតស្រឡាញ់របស់ទ្រង់ផង។ ហើយទ្រង់ជាអ្នកដែលអាណិតស្រឡាញ់ជាងគេបំផុត។

إِنَّ ٱلَّذِينَ ٱتَّخَذُواْ ٱلۡعِجۡلَ سَيَنَالُهُمۡ غَضَبٞ مِّن رَّبِّهِمۡ وَذِلَّةٞ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَاۚ وَكَذَٰلِكَ نَجۡزِي ٱلۡمُفۡتَرِينَ ١٥٢

១៥២-ពិតប្រាកដណាស់ ចំពោះពួកដែលបានយកកូនគោ(ធ្វើជាម្ចាស់) ពួកគេនឹងទទួលបាននូវការខឹងសម្បាពីម្ចាស់របស់ពួកគេ និងភាពអាម៉ាស់ក្នុងការរស់នៅលើលោកិយនេះ។ ដូច្នោះដែរ យើងតបស្នងចំពោះពួកដែលប្រឌិតភូតកុហក។

وَٱلَّذِينَ عَمِلُواْ ٱلسَّيِّـَٔاتِ ثُمَّ تَابُواْ مِنۢ بَعۡدِهَا وَءَامَنُوٓاْ إِنَّ رَبَّكَ مِنۢ بَعۡدِهَا لَغَفُورٞ رَّحِيمٞ ١٥٣

១៥៣-ចំពោះពួកដែលបានប្រព្រឹត្តអំពើអាក្រក់ ក្រោយមកពួកគេបានសុំអភ័យទោស ហើយពួកគេមានជំនឿបន្ទាប់ពីនោះ ពិតប្រាកដណាស់ម្ចាស់របស់អ្នកក្រោយពីនោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

وَلَمَّا سَكَتَ عَن مُّوسَى ٱلۡغَضَبُ أَخَذَ ٱلۡأَلۡوَاحَۖ وَفِي نُسۡخَتِهَا هُدٗى وَرَحۡمَةٞ لِّلَّذِينَ هُمۡ لِرَبِّهِمۡ يَرۡهَبُونَ ١٥٤

១៥៤-ហើយនៅពេលដែលកំហឹងបានរំសាយចេញពីមូសា គាត់បានយកផែនចារិកមកវិញ ហើយនៅក្នុងការសរសេររបស់វានោះ គឺមានការចង្អុលបង្ហាញនិងការអាណិតស្រឡាញ់ចំពោះបណ្ដាអ្នកដែលកោតខ្លាចម្ចាស់របស់ពួកគេ។

وَٱخۡتَارَ مُوسَىٰ قَوۡمَهُۥ سَبۡعِينَ رَجُلٗا لِّمِيقَٰتِنَاۖ فَلَمَّآ أَخَذَتۡهُمُ ٱلرَّجۡفَةُ قَالَ رَبِّ لَوۡ شِئۡتَ أَهۡلَكۡتَهُم مِّن قَبۡلُ وَإِيَّٰيَۖ أَتُهۡلِكُنَا بِمَا فَعَلَ ٱلسُّفَهَآءُ مِنَّآۖ إِنۡ هِيَ إِلَّا فِتۡنَتُكَ تُضِلُّ بِهَا مَن تَشَآءُ وَتَهۡدِي مَن تَشَآءُۖ أَنتَ وَلِيُّنَا فَٱغۡفِرۡ لَنَا وَٱرۡحَمۡنَاۖ وَأَنتَ خَيۡرُ ٱلۡغَٰفِرِينَ ١٥٥

១៥៥-ហើយមូសាបានជ្រើសរើសបុរសចិតសិបនាក់(អ្នកគ្រាន់បើ)ពីក្រុមរបស់គេចំពោះការកំណត់របស់យើង។ ហើយពេលដែលការរញ្ជួយដីបានឆក់យកជីវិតពួកគេ មូសាបានពោលថាៈ ឱម្ចាស់របស់ខ្ញុំ! ប្រសិនបើទ្រង់មានចេតនានោះ ទ្រង់គួរតែបំផ្លាញពួកគេនិងខ្ញុំមុនទៅ។ តើទ្រង់បំផ្លាញពួកយើងដោយសារតែអ្វីដែលពួកល្ងង់ខ្លៅក្នុងចំណោមពួកយើងបានប្រព្រឹត្តឬ? ទង្វើទាំងនេះ(ការគោរពរូបសំណាកកូនគោ)គ្រាន់តែជាការសាកល្បងរបស់ទ្រង់ដែលធ្វើឱ្យវង្វេងដោយសារវាចំពោះអ្នកណាដែលទ្រង់មានចេតនាប៉ុណ្ណោះ។ ហើយទ្រង់ចង្អុលបង្ហាញអ្នកណាដែលទ្រង់មានចេតនា។ ទ្រង់គឺជាអ្នកគ្រប់គ្រងពួកយើង ដូច្នេះសូមទ្រង់មេត្តាអភ័យទោសឱ្យពួកយើង និងអាណិតស្រឡាញ់ដល់ពួកយើងផង។ ហើយទ្រង់គឺជាអ្នកដែលអភ័យទោសដ៏ប្រសើរបំផុត។

۞ وَٱكْتُبْ لَنَا فِى هَٰذِهِ ٱلدُّنْيَا حَسَنَةً وَفِى
ٱلْءَاخِرَةِ إِنَّا هُدْنَآ إِلَيْكَ ۚ قَالَ عَذَابِىٓ أُصِيبُ
بِهِۦ مَنْ أَشَآءُ ۖ وَرَحْمَتِى وَسِعَتْ كُلَّ شَىْءٍ ۚ
فَسَأَكْتُبُهَا لِلَّذِينَ يَتَّقُونَ وَيُؤْتُونَ ٱلزَّكَوٰةَ
وَٱلَّذِينَ هُم بِـَٔايَٰتِنَا يُؤْمِنُونَ ﴿١٥٦﴾

១៥៦-ហើយសូមទ្រង់មេត្តាកំណត់អំពើល្អសម្រាប់ពួកយើងនៅក្នុងលោកិយនេះ និងថ្ងៃបរលោកផង ពិតប្រាកដណាស់ ពួកយើងបានវិលត្រឡប់ទៅរកទ្រង់វិញហើយ ។ អល់ឡោះបានមានបន្ទូលថាៈ ទារុណកម្មរបស់យើងគឺយើងនឹងដាក់វាលើអ្នកណាដែលយើងមានចេតនា ហើយការអាណិតស្រឡាញ់របស់យើងគឺបានជ្រួតជ្រាបទៅលើអ្វីៗទាំងអស់ ។ យើងនឹងកំណត់វា( ការអាណិតស្រឡាញ់) សម្រាប់បណ្ដាអ្នកដែលកោតខ្លាច និងបណ្ដាអ្នកដែលបរិច្ចាគហ្សាកាត់ ព្រមទាំងអ្នកដែលមានជំនឿនឹងភស្ដុតាងទាំងឡាយរបស់យើង ។

ٱلَّذِينَ يَتَّبِعُونَ ٱلرَّسُولَ ٱلنَّبِىَّ ٱلْأُمِّىَّ
ٱلَّذِى يَجِدُونَهُۥ مَكْتُوبًا عِندَهُمْ فِى ٱلتَّوْرَىٰةِ
وَٱلْإِنجِيلِ يَأْمُرُهُم بِٱلْمَعْرُوفِ وَيَنْهَىٰهُمْ عَنِ
ٱلْمُنكَرِ وَيُحِلُّ لَهُمُ ٱلطَّيِّبَٰتِ وَيُحَرِّمُ عَلَيْهِمُ
ٱلْخَبَٰٓئِثَ وَيَضَعُ عَنْهُمْ إِصْرَهُمْ وَٱلْأَغْلَٰلَ
ٱلَّتِى كَانَتْ عَلَيْهِمْ ۚ فَٱلَّذِينَ ءَامَنُوا۟ بِهِۦ
وَعَزَّرُوهُ وَنَصَرُوهُ وَٱتَّبَعُوا۟ ٱلنُّورَ ٱلَّذِىٓ أُنزِلَ
مَعَهُۥٓ ۙ أُو۟لَٰٓئِكَ هُمُ ٱلْمُفْلِحُونَ ﴿١٥٧﴾

១៥៧-បណ្ដាអ្នកដែលតាមអ្នកនាំសារ( មូហាំម៉ាត់) ដែលជាណាពីមិនចេះអាននិងមិនចេះសរសេរ ដែលពួកគេដឹងពីលក្ខណៈរបស់គាត់ដែលត្រូវបានសរសេរក្នុងគម្ពីរតាវ៉រតនិងអ៊ិញជីលដែលមាននៅជាមួយពួកគេ ។ គាត់បញ្ជាពួកគេឱ្យធ្វើល្អ និងហាមឃាត់ពួកគេអំពីប្រការអាក្រក់ ហើយអនុញ្ញាតឱ្យពួកគេនូវអ្វីដែលល្អ( ហាឡាល់) និងហាមឃាត់ពួកគេនូវអ្វីដែលអាក្រក់ ព្រមទាំងលុបបំបាត់កិច្ចការដែលលំបាក[1] និងកិច្ចការដែលធ្ងន់ធ្ងរ[2]ដែលធ្លាប់មានចំពោះពួកគេ ។ ដូច្នេះ បណ្ដាអ្នកដែលបានជឿលើគាត់ និងលើកតម្កើងគាត់ និងជួយគាត់ ហើយនិងបានអនុវត្តតាមពន្លឺ( គម្ពីរគួរអាន) ដែលគេបានបញ្ចុះមកឱ្យគាត់នោះ អ្នកទាំងនោះគឺជាអ្នកដែលជោគជ័យ ។

قُلْ يَٰٓأَيُّهَا ٱلنَّاسُ إِنِّى رَسُولُ ٱللَّهِ إِلَيْكُمْ
جَمِيعًا ٱلَّذِى لَهُۥ مُلْكُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۖ
لَآ إِلَٰهَ إِلَّا هُوَ يُحْىِۦ وَيُمِيتُ ۖ فَـَٔامِنُوا۟
بِٱللَّهِ وَرَسُولِهِ ٱلنَّبِىِّ ٱلْأُمِّىِّ ٱلَّذِى يُؤْمِنُ
بِٱللَّهِ وَكَلِمَٰتِهِۦ وَٱتَّبِعُوهُ لَعَلَّكُمْ

១៥៨-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ឱមនុស្សលោកទាំងឡាយ! ពិតប្រាដកណាស់ ខ្ញុំគឺជាអ្នកនាំសាររបស់អល់ឡោះមកកាន់ពួកអ្នកទាំងអស់គ្នា ដែលអំណាចគ្រប់គ្រងមេឃជាច្រើនជាន់និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់ ។ គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដក្រៅពីទ្រង់ដែលជាអ្នកធ្វើឱ្យរស់និងជាអ្នកធ្វើឱ្យស្លាប់ ។ ដូច្នេះចូរពួកអ្នកជឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ដែល

---

១-ដូចជាការកាត់សាច់ ឬសំល្បៀកបំពាក់ចេញ នៅពេលដែលប្រឡាក់អ្វីដែលច្បាប់ហាមឃាត់ ។
២-ដូចជាការដុតជ័យភណ្ឌ និងការសងសឹកភ្លាមៗ ។

تَهْتَدُونَ ﴿١٥٨﴾

ជាណាពីមិនចេះអាន និងមិនចេះសរសេរដែលគាត់មានជំនឿលើអល់ឡោះនិងជឿគ្រប់ពាក្យសំដីរបស់ទ្រង់ ។ ហើយចូរពួកអ្នកប្រតិបត្តិតាមគាត់ សង្ឃឹមថាពួកអ្នកនឹងទទួលបាននូវការចង្អុលបង្ហាញ ។

وَمِن قَوْمِ مُوسَىٰٓ أُمَّةٌ يَهْدُونَ بِٱلْحَقِّ وَبِهِۦ
يَعْدِلُونَ ﴿١٥٩﴾

១៥៩-ក្នុងចំណោមក្រុមរបស់មូសាមានមួយក្រុមដែលចង្អុលបង្ហាញអ្នកដទៃទៅរកការពិត និងកាត់សេចក្ដីដោយយុត្តិធម៌ ។

وَقَطَّعْنَٰهُمُ ٱثْنَتَىْ عَشْرَةَ أَسْبَاطًا أُمَمًا ۚ
وَأَوْحَيْنَآ إِلَىٰ مُوسَىٰٓ إِذِ ٱسْتَسْقَىٰهُ قَوْمُهُۥٓ
أَنِ ٱضْرِب بِّعَصَاكَ ٱلْحَجَرَ ۖ فَٱنۢبَجَسَتْ
مِنْهُ ٱثْنَتَا عَشْرَةَ عَيْنًا ۖ قَدْ عَلِمَ كُلُّ أُنَاسٍ
مَّشْرَبَهُمْ ۚ وَظَلَّلْنَا عَلَيْهِمُ ٱلْغَمَٰمَ وَأَنزَلْنَا
عَلَيْهِمُ ٱلْمَنَّ وَٱلسَّلْوَىٰ ۖ كُلُوا۟ مِن
طَيِّبَٰتِ مَا رَزَقْنَٰكُمْ ۚ وَمَا ظَلَمُونَا وَلَٰكِن
كَانُوٓا۟ أَنفُسَهُمْ يَظْلِمُونَ ﴿١٦٠﴾

១៦០-យើងបានបំបែកពួកគេជាដប់ពីរក្រុមតាមពូជអំបូរនីមួយៗ ។ ហើយយើងបានផ្ដល់វ៉ាហ៊ីចំពោះមូសានៅពេលដែលក្រុមរបស់គេបានសុំទឹកពីគេ ។ ចូរអ្នកវាយថ្មនឹងដំបងរបស់អ្នក ។ បន្ទាប់មកថ្មនោះបានបាញ់ទឹកចេញពីវាដប់ពីររន្ធ ។ ពិតប្រាកដណាស់ ក្រុមនីមួយៗបានដឹងពីកន្លែងផឹកទឹករបស់ពួកគេ ។ ហើយយើងបានធ្វើឱ្យពពកបាំងជាម្លប់លើពួកគេ ហើយយើងបានបញ្ចុះអាល់ម៉ាន់ណា[1] និងសត្វក្រួចឱ្យពួកគេ ។ ចូរពួកអ្នកបរិភោគចំណីអាហារល្អៗដែលយើងបានផ្ដល់ឱ្យពួកអ្នក ។ ហើយពួកគេមិនបានបំពានលើយើងឡើយ ក៏ប៉ុន្តែពួកគេទេដែលបំពានលើខ្លួនឯងនោះ ។

وَإِذْ قِيلَ لَهُمُ ٱسْكُنُوا۟ هَٰذِهِ ٱلْقَرْيَةَ وَكُلُوا۟
مِنْهَا حَيْثُ شِئْتُمْ وَقُولُوا۟ حِطَّةٌ وَٱدْخُلُوا۟
ٱلْبَابَ سُجَّدًا نَّغْفِرْ لَكُمْ خَطِيٓـَٰٔتِكُمْ ۚ
سَنَزِيدُ ٱلْمُحْسِنِينَ ﴿١٦١﴾

១៦១-ហើយ(ចូរចងចាំ)នៅពេលដែលមានគេនិយាយទៅកាន់ពួកគេថាៈ ចូរពួកអ្នករស់នៅទីក្រុង(ក្រុងយេរូសាឡឹម)នេះចុះ ហើយចូរពួកអ្នកទទួលទាននូវអ្វីដែលមាននៅទីនោះតាមសេចក្ដីត្រូវការរបស់ពួកអ្នក ហើយពួកអ្នកត្រូវសុំថាៈ សូមអល់ឡោះមេត្តាលើកលែងទោសឱ្យយើងខ្ញុំផង ហើយពួកអ្នកត្រូវចូលតាមទ្វារដោយឱនលំទោន យើងនឹងលើកលែងឱ្យពួកអ្នកនូវកំហុសឆ្គងរបស់ពួកអ្នក ។ យើងនឹងបន្ថែម(ផលបុណ្យ)ទៅលើបណ្ដាអ្នកដែលសាងអំពើល្អ ។

فَبَدَّلَ ٱلَّذِينَ ظَلَمُوا۟ مِنْهُمْ قَوْلًا غَيْرَ
ٱلَّذِى قِيلَ لَهُمْ فَأَرْسَلْنَا عَلَيْهِمْ رِجْزًا

១៦២-ប៉ុន្តែពួកបំពានមួយចំនួនបានកែប្រែពាក្យផ្សេងដែលគេបានប្រើទៅចំពោះពួកគេ ។ ហេតុនេះ យើងបានបញ្ចុះទារុណកម្មពីលើមេឃទៅលើពួកគេតាមអ្វីដែលពួកគេបានបំពាន ។

---

១-អាល់ម៉ាន់ណា ៖ ជាប្រភេទចំណីដែលមានរសជាតិផ្អែម ។

مِّنَ ٱلسَّمَآءِ بِمَا كَانُواْ
يَظْلِمُونَ ﴿١٦٢﴾
وَسْـَٔلْهُمْ عَنِ ٱلْقَرْيَةِ ٱلَّتِى كَانَتْ حَاضِرَةَ
ٱلْبَحْرِ إِذْ يَعْدُونَ فِى ٱلسَّبْتِ إِذْ تَأْتِيهِمْ
حِيتَانُهُمْ يَوْمَ سَبْتِهِمْ شُرَّعًا وَيَوْمَ لَا
يَسْبِتُونَ ۙ لَا تَأْتِيهِمْ ۚ كَذَٰلِكَ نَبْلُوهُم
بِمَا كَانُواْ يَفْسُقُونَ ﴿١٦٣﴾
وَإِذْ قَالَتْ أُمَّةٌ مِّنْهُمْ لِمَ تَعِظُونَ قَوْمًا ۙ ٱللَّهُ
مُهْلِكُهُمْ أَوْ مُعَذِّبُهُمْ عَذَابًا شَدِيدًا ۖ قَالُواْ
مَعْذِرَةً إِلَىٰ رَبِّكُمْ وَلَعَلَّهُمْ يَتَّقُونَ ﴿١٦٤﴾
فَلَمَّا نَسُواْ مَا ذُكِّرُواْ بِهِۦٓ أَنجَيْنَا ٱلَّذِينَ
يَنْهَوْنَ عَنِ ٱلسُّوٓءِ وَأَخَذْنَا ٱلَّذِينَ
ظَلَمُواْ بِعَذَابٍۭ بَـِٔيسٍۭ بِمَا كَانُواْ
يَفْسُقُونَ ﴿١٦٥﴾
فَلَمَّا عَتَوْاْ عَن مَّا نُهُواْ عَنْهُ قُلْنَا لَهُمْ كُونُواْ
قِرَدَةً خَٰسِـِٔينَ ﴿١٦٦﴾
وَإِذْ تَأَذَّنَ رَبُّكَ لَيَبْعَثَنَّ عَلَيْهِمْ إِلَىٰ يَوْمِ
ٱلْقِيَٰمَةِ مَن يَسُومُهُمْ سُوٓءَ ٱلْعَذَابِ ۗ إِنَّ
رَبَّكَ لَسَرِيعُ ٱلْعِقَابِ ۖ وَإِنَّهُۥ لَغَفُورٌ

១៦៣-ហើយចូរអ្នក(មូហាំម៉ាត់)សួរពួកគេ(អំបូរអ៊ីស្រាអែល)អំពីភូមិស្រុកដែលស្ថិតនៅជិតសមុទ្រ នៅពេលដែលពួកគេបំពាននៅថ្ងៃសៅរ៍[1] នាពេលដែលត្រីរបស់ពួកគេបានផុសយ៉ាងច្រើនមកកាន់ពួកគេនៅថ្ងៃសៅរ៍ ហើយនៅថ្ងៃក្រៅពីថ្ងៃសៅរ៍ ត្រីទាំងនោះមិនមកកាន់ពួកគេឡើយ ។ ដូច្នេះហើយយើងសាកល្បងពួកគេនូវអ្វីដែលពួកគេធ្លាប់ប្រឆាំង(បទបញ្ជារបស់អល់ឡោះ) ។

១៦៤-(ចូរចងចាំ)នៅពេលដែលប្រជាជាតិមួយនៃពួកគេបាននិយាយថាៈ តើហេតុអ្វីបានជាពួកអ្នកណែនាំក្រុមដែលអល់ឡោះជិតនឹងបំផ្លាញពួកគេ ឬធ្វើទារុណកម្មពួកគេនូវទារុណកម្មយ៉ាងខ្លាំងក្លានោះ? ពួកគេ(អ្នកណែនាំ)បានតបថាៈ គឺដើម្បីដោះសាចំពោះម្ចាស់របស់ពួកអ្នក ហើយសង្ឃឹមថាពួកគេនឹងកោតខ្លាចអល់ឡោះ ។

១៦៥-ហើយនៅពេលដែលពួកគេបានភ្លេចនូវអ្វីដែលគេបានក្រើនរំលឹកនោះ យើងបានរំដោះតែពួកដែលហាមឃាត់គ្នាអំពីប្រការអាក្រក់ ហើយយើងបានដាក់ទៅលើពួកដែលបានបំពាន(នេសាទនៅថ្ងៃសៅរ៍)នូវទារុណកម្មយ៉ាងខ្លាំងដោយសារតែពួកគេធ្លាប់ប្រព្រឹត្តបទល្មើស ។

១៦៦-ហើយនៅពេលដែលពួកគេបានបំពានហួសពីអ្វីដែលគេបានហាមឃាត់នោះ ពេលនោះយើងបានបន្ទូលទៅកាន់ពួកគេថាៈ ចូរពួកអ្នកក្លាយជាសត្វស្វាដ៏វេទនាចុះ ។

១៦៧-ហើយ(ចូរចងចាំ)នៅពេលដែលម្ចាស់របស់អ្នក(មូហាំម៉ាត់)បានប្រកាសថាៈ ទ្រង់ប្រាកដជានឹងបញ្ជូនអ្នកដែលធ្វើបាបពួកគេ(យ៉ាហ៊ូទី)ដោយទារុណកម្មដ៏អាក្រក់ទៅកាន់ពួកគេរហូតដល់ថ្ងៃបរលោក ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកជាអ្នកដាក់

១-ថ្ងៃដែលអល់ឡោះបានហាមឃាត់មិនឱ្យនេសាទត្រី ។

رَّحِيمٌ ﴿١٦٧﴾

ទណ្ឌកម្មយ៉ាងរហ័សបំផុត ហើយពិតប្រាកដណាស់ ទ្រង់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَقَطَّعْنَٰهُمْ فِى ٱلْأَرْضِ أُمَمًا ۖ مِّنْهُمُ
ٱلصَّٰلِحُونَ وَمِنْهُمْ دُونَ ذَٰلِكَ ۖ وَبَلَوْنَٰهُم
بِٱلْحَسَنَٰتِ وَٱلسَّيِّـَٔاتِ لَعَلَّهُمْ يَرْجِعُونَ ﴿١٦٨﴾

១៦៨-ហើយយើងបានបំបែកពួកគេ( អំបូរអ៊ីស្រាអែល) ជាក្រុមៗនៅលើផែនដីនេះ ។ មួយចំនួននៃពួកគេជាអ្នកសាងអំពើល្អ និងមួយចំនួនទៀតមិនបានសាងដូច្នេះទេ ។ យើងបានសាកល្បងពួកគេនូវប្រការល្អ និងប្រការអាក្រក់ជាច្រើន ។ សង្ឃឹមថាពួកគេនឹងវិលត្រលប់( ទៅសាងអំពើល្អ) ។

فَخَلَفَ مِنۢ بَعْدِهِمْ خَلْفٌ وَرِثُوا۟ ٱلْكِتَٰبَ
يَأْخُذُونَ عَرَضَ هَٰذَا ٱلْأَدْنَىٰ وَيَقُولُونَ
سَيُغْفَرُ لَنَا وَإِن يَأْتِهِمْ عَرَضٌ مِّثْلُهُۥ يَأْخُذُوهُ ۚ
أَلَمْ يُؤْخَذْ عَلَيْهِم مِّيثَٰقُ ٱلْكِتَٰبِ أَن لَّا
يَقُولُوا۟ عَلَى ٱللَّهِ إِلَّا ٱلْحَقَّ وَدَرَسُوا۟ مَا فِيهِ ۗ
وَٱلدَّارُ ٱلْءَاخِرَةُ خَيْرٌ لِّلَّذِينَ يَتَّقُونَ ۗ أَفَلَا
تَعْقِلُونَ ﴿١٦٩﴾

១៦៩-ហើយមានអ្នកជំនាន់ក្រោយបានស្នងបន្ទាប់ពីពួកគេ ដែលអ្នកទាំងនោះបានទទួលមរតកគម្ពីរ( តាវរ៉ត) ហើយនោះ ពួកគេបែរជាទទួលយកទ្រព្យសម្បត្តិដ៏តិចតួចក្នុងលោកិយនេះទៅវិញ ហើយពួកគេនិយាយថា: ពួកយើងនឹងត្រូវអល់ឡោះអភ័យទោសឱ្យ ។ ប្រសិនបើទ្រព្យសម្បត្តិដូចនោះមកដល់ពួកគេ ពួកគេពិតជាទទួលយកវា ។ តើគេមិនបានដាក់កិច្ចសន្យាទៅលើពួកគេក្នុង( ការអនុវត្តតាម) គម្ពីរតាវរ៉តដោយមិនឱ្យពួកគេនិយាយទៅលើអល់ឡោះក្រៅពីការពិតនោះទេឬ? ហើយពួកគេក៏បានសិក្សានូវអ្វីដែលមាននៅក្នុងគម្ពីរនោះដែរ ។ លំនៅដ្ឋាននាថ្ងៃបរលោកគឺប្រសើរបំផុតចំពោះអ្នកដែលកោតខ្លាច ។ តើពួកអ្នកមិនស្វែងយល់ទេឬ?

وَٱلَّذِينَ يُمَسِّكُونَ بِٱلْكِتَٰبِ وَأَقَامُوا۟
ٱلصَّلَوٰةَ إِنَّا لَا نُضِيعُ أَجْرَ ٱلْمُصْلِحِينَ ﴿١٧٠﴾

១៧០-ចំពោះបណ្តាអ្នកដែលប្រកាន់ខ្ជាប់តាមគម្ពីរតាវរ៉ត និងប្រតិបត្តិសឡាត ពិតប្រាកដណាស់យើងមិនធ្វើឱ្យបាត់បង់នូវផលបុណ្យរបស់អ្នកដែលសាងអំពើល្អឡើយ ។

۞ وَإِذْ نَتَقْنَا ٱلْجَبَلَ فَوْقَهُمْ كَأَنَّهُۥ ظُلَّةٌ وَظَنُّوٓا۟
أَنَّهُۥ وَاقِعٌۢ بِهِمْ خُذُوا۟ مَآ ءَاتَيْنَٰكُم بِقُوَّةٍ
وَٱذْكُرُوا۟ مَا فِيهِ لَعَلَّكُمْ تَتَّقُونَ ﴿١٧١﴾

១៧១-ហើយ( ចូរចងចាំ) នៅពេលដែលយើងបានលើកភ្នំដាក់ពីលើពួកគេ( អំបូរអ៊ីស្រាអែល) វាហាក់ដូចជាពពក ហើយពួកគេបានទឹកស្មានថា ពិតប្រាកដណាស់ ភ្នំនោះធ្លាក់សង្កត់ពួកគេ ។ ( យើងបានមានបន្ទូលថា) ចូរពួកអ្នកទទួលយក( គម្ពីរតាវរ៉ត) ដោយខ្ជាប់ខ្ជួននូវអ្វីដែលយើងបានផ្តល់ឱ្យពួកអ្នក ហើយចូរពួកអ្នកចងចាំនូវអ្វីដែលមាននៅក្នុងវា ដើម្បីឱ្យពួកអ្នកកោតខ្លាច ។

وَإِذْ أَخَذَ رَبُّكَ مِنۢ بَنِىٓ ءَادَمَ مِن ظُهُورِهِمْ
ذُرِّيَّتَهُمْ وَأَشْهَدَهُمْ عَلَىٰٓ أَنفُسِهِمْ أَلَسْتُ

១៧២-ហើយ( ចូរចងចាំ) នៅពេលដែលម្ចាស់របស់អ្នកបានបញ្ចេញអំបូរអាដាំអំពីខ្នងរបស់ពួកគេនូវកូនចៅរបស់ពួកគេ ហើយ

بِرَبِّكُمْۖ قَالُواْ بَلَىٰ ۛ شَهِدْنَآ ۛ أَن تَقُولُواْ يَوْمَ ٱلْقِيَـٰمَةِ إِنَّا كُنَّا عَنْ هَـٰذَا غَـٰفِلِينَ ﴿١٧٢﴾

ទ្រង់បានឱ្យពួកគេធ្វើសាក្សីលើខ្លួនឯងថា: តើយើងមិនមែនជាម្ចាស់របស់ពួកអ្នកទេឬ? ពួកគេបាននិយាយថា: មិនដូច្នោះទេ! ពួកយើងបានធ្វើសាក្សីថា ទ្រង់ជាម្ចាស់របស់ពួកយើង។ (យើងសួរដូច្នេះ) ខ្លាចក្រែងពួកអ្នកនិយាយនៅថ្ងៃបរលោកថា: ពិតប្រាកដណាស់ ពួកយើងមិនធ្លាប់បានដឹងពីបញ្ហានេះឡើយ។

أَوْ تَقُولُوٓاْ إِنَّمَآ أَشْرَكَ ءَابَآؤُنَا مِن قَبْلُ وَكُنَّا ذُرِّيَّةً مِّنۢ بَعْدِهِمْۖ أَفَتُهْلِكُنَا بِمَا فَعَلَ ٱلْمُبْطِلُونَ ﴿١٧٣﴾

១៧៣-ឬពួកអ្នកនិយាយថា: តាមពិតជីដូនជីតារបស់ពួកយើងបានធ្វើស្ហ៊ីរិកតាំងពីមុនមកម្លេះ ហើយពួកយើងខ្ញុំគ្រាន់តែជាកូនចៅជំនាន់ក្រោយពីពួកគាត់ប៉ុណ្ណោះ។ តើទ្រង់បំផ្លាញពួកយើងដោយសារតែពួកដែលប្រព្រឹត្តខុស(ជំនាន់មុន) ធ្លាប់បានប្រព្រឹត្តឬ?

وَكَذَٰلِكَ نُفَصِّلُ ٱلْأَيَـٰتِ وَلَعَلَّهُمْ يَرْجِعُونَ ﴿١٧٤﴾

១៧៤-ហើយដូច្នេះដែរ យើងបញ្ជាក់នូវភស្តុតាងយ៉ាងច្បាស់ជាច្រើន ហើយសង្ឃឹមថាពួកគេនឹងវិលត្រឡប់(ទៅរកមាគ៌ាត្រឹមត្រូវវិញ)។

وَٱتْلُ عَلَيْهِمْ نَبَأَ ٱلَّذِىٓ ءَاتَيْنَـٰهُ ءَايَـٰتِنَا فَٱنسَلَخَ مِنْهَا فَأَتْبَعَهُ ٱلشَّيْطَـٰنُ فَكَانَ مِنَ ٱلْغَاوِينَ ﴿١٧٥﴾

១៧៥-ចូរអ្នក(មូហាំម៉ាត់) អធិប្បាយដល់ពួកគេនូវដំណឹងរបស់អ្នកដែលយើងបានផ្តល់ឱ្យគេនូវបណ្តាភស្តុតាងរបស់យើង។ តែគេបានបោះបង់វា ហើយស្ហៃតនបានអូសទាញគេ រួចគេក៏ស្ថិតក្នុងចំណោមពួកដែលវង្វេង។

وَلَوْ شِئْنَا لَرَفَعْنَـٰهُ بِهَا وَلَـٰكِنَّهُۥٓ أَخْلَدَ إِلَى ٱلْأَرْضِ وَٱتَّبَعَ هَوَىٰهُۚ فَمَثَلُهُۥ كَمَثَلِ ٱلْكَلْبِ إِن تَحْمِلْ عَلَيْهِ يَلْهَثْ أَوْ تَتْرُكْهُ يَلْهَثۚ ذَّٰلِكَ مَثَلُ ٱلْقَوْمِ ٱلَّذِينَ كَذَّبُوا بِـَٔايَـٰتِنَاۚ فَٱقْصُصِ ٱلْقَصَصَ لَعَلَّهُمْ يَتَفَكَّرُونَ ﴿١٧٦﴾

១៧៦-ប្រសិនបើយើងមានចេតនា យើងពិតជាលើកតម្កើងគេតាមរយៈវា(អាយ៉ាត់)។ ក៏ប៉ុន្តែបុគ្គលនោះបានរេទៅរកជីវិតលោកិយវិញ និងបានធ្វើតាមចំណង់ចិត្តរបស់គេ។ ដូច្នេះបុគ្គលនោះប្រៀបដូចជាសត្វឆ្កែ ប្រសិនបើអ្នកដេញវា ឬលែងវាចោល ក៏វានៅតែលៀនអណ្តាតដដែល។ នោះហើយគឺជាការប្រៀបធៀបក្រុមដែលបានបដិសេធនឹងអាយ៉ាត់ៗរបស់យើង។ ដូច្នេះ ចូរអ្នក(មូហាំ-ម៉ាត់) និទានរឿងទាំងនោះដើម្បីឱ្យពួកគេគិតពិចារណាចុះ។

سَآءَ مَثَلًا ٱلْقَوْمُ ٱلَّذِينَ كَذَّبُواْ بِـَٔايَـٰتِنَا وَأَنفُسَهُمْ كَانُواْ يَظْلِمُونَ ﴿١٧٧﴾

១៧៧-ការប្រៀបធៀបក្រុមដែលបានបដិសេធនឹងអាយ៉ាត់ៗរបស់យើង ហើយពួកគេធ្លាប់បានបំពានលើខ្លួនឯងនោះគឺអាក្រក់បំផុត។

مَن يَهْدِ ٱللَّهُ فَهُوَ ٱلْمُهْتَدِىۖ وَمَن يُضْلِلْ

១៧៨-អ្នកណាហើយដែលអល់ឡោះចង្អុលបង្ហាញ អ្នកនោះ

ពិតជាអ្នកដែលទទួលបានការចង្អុលបង្ហាញ ។ រីឯអ្នកណាហើយដែល
គេធ្វើឱ្យវង្វេង ពួកទាំងនោះគឺជាពួកដែលខាតបង់ ។

១៧៩-ហើយជាការពិតណាស់ យើងបានបង្កើតជិន និងមនុស្ស
លោកភាគច្រើនសម្រាប់ដាក់ក្នុងនរកជើហាន់ណាំ ។ ពួកគេមានចិត្ត
តែពួកគេមិនចេះស្វែងយល់នឹងវា ។ ពួកគេមានភ្នែក តែពួកគេមិន
មើលនឹងវា ។ ពួកគេមានត្រចៀក តែពួកគេមិនស្តាប់នឹងវា ។ ពួក
ទាំងនោះប្រៀបដូចជាសត្វពាហនៈ តែផ្ទុយទៅវិញពួកគេវង្វេងជាង
សត្វពាហនៈទៅទៀត ។ ពួកទាំងនោះជាពួកដែលធ្វេសប្រហែស ។

១៨០-ហើយបណ្តាឈ្មោះដ៏ល្អប្រពៃជាកម្មសិទ្ធិរបស់
អល់ឡោះ ។ ដូច្នេះ ចូរពួកអ្នកបួងសួងសុំទ្រង់តាមរយៈឈ្មោះទាំង
នោះចុះ ។ ហើយចូរពួកអ្នកបោះបង់ចោលពួកដែលកែប្រែបណ្តា
ឈ្មោះរបស់ទ្រង់ ។ ពួកគេនឹងត្រូវគេតបស្នងនូវអ្វីដែលពួកគេបាន
ប្រព្រឹត្ត ។

១៨១-ហើយក្នុងចំណោមអ្នកដែលយើងបានបង្កើតនោះ គឺ
ប្រជាជាតិដែលពួកគេចង្អុលបង្ហាញនូវមាគ៌ាដ៏ត្រឹមត្រូវ ហើយដោយ
ភាពត្រឹមត្រូវនេះ ពួកគេអនុវត្តនូវភាពយុត្តិធម៌ ។

១៨២-ហើយពួកដែលបានបដិសេធនឹងអាយ៉ាត់ៗរបស់យើង
យើងនឹងអូសទាញពួកគេបន្តិចម្តងៗ( ទៅរកសេចក្តីវិនាសអន្តរាយ
និងផ្តន្ទាទោស) តាមរូបភាពដែលពួកគេមិនដឹងខ្លួន ។

១៨៣-តែយើងពន្យារពេលឱ្យពួកគេ ។ ពិតប្រាកដណាស់ វិធី
សាស្ត្ររបស់យើងគឺរឹងមាំបំផុត ។

១៨៤-តើពួកគេមិនពិចារណាទេឬ? មិត្តរបស់ពួកគេ( មូហាំ-
ម៉ាត់) មិនមែនជាមនុស្សវិកលចរិតឡើយ ។ គេគ្មានអ្វីក្រៅពីជាអ្នក
ដាស់តឿនព្រមានដ៏ជាក់ច្បាស់នោះឡើយ ។

១៨៥-តើពួកគេមិនសម្លឹងមើលការគ្រប់គ្រងមេឃជាច្រើន
ជាន់ និងផែនដី និងអ្វីៗគ្រប់បែបយ៉ាងទាំងអស់ដែលអល់ឡោះបាន
បង្កើត ហើយ( ភាពអន្តរាយ) អាចនឹងមកដល់ចុងបញ្ចប់នៃជីវិត

فَأُوْلَٰٓئِكَ هُمُ ٱلۡخَٰسِرُونَ ١٧٨

وَلَقَدۡ ذَرَأۡنَا لِجَهَنَّمَ كَثِيرٗا مِّنَ ٱلۡجِنِّ
وَٱلۡإِنسِۖ لَهُمۡ قُلُوبٞ لَّا يَفۡقَهُونَ بِهَا وَلَهُمۡ
أَعۡيُنٞ لَّا يُبۡصِرُونَ بِهَا وَلَهُمۡ ءَاذَانٞ لَّا يَسۡمَعُونَ
بِهَآۚ أُوْلَٰٓئِكَ كَٱلۡأَنۡعَٰمِ بَلۡ هُمۡ أَضَلُّۚ أُوْلَٰٓئِكَ
هُمُ ٱلۡغَٰفِلُونَ ١٧٩

وَلِلَّهِ ٱلۡأَسۡمَآءُ ٱلۡحُسۡنَىٰ فَٱدۡعُوهُ بِهَاۖ وَذَرُواْ ٱلَّذِينَ
يُلۡحِدُونَ فِيٓ أَسۡمَٰٓئِهِۦۚ سَيُجۡزَوۡنَ مَا كَانُواْ
يَعۡمَلُونَ ١٨٠

وَمِمَّنۡ خَلَقۡنَآ أُمَّةٞ يَهۡدُونَ بِٱلۡحَقِّ وَبِهِۦ
يَعۡدِلُونَ ١٨١

وَٱلَّذِينَ كَذَّبُواْ بِـَٔايَٰتِنَا سَنَسۡتَدۡرِجُهُم مِّنۡ
حَيۡثُ لَا يَعۡلَمُونَ ١٨٢

وَأُمۡلِي لَهُمۡۚ إِنَّ كَيۡدِي مَتِينٌ ١٨٣

أَوَلَمۡ يَتَفَكَّرُواْۗ مَا بِصَاحِبِهِم مِّن جِنَّةٍۚ إِنۡ
هُوَ إِلَّا نَذِيرٞ مُّبِينٌ ١٨٤

أَوَلَمۡ يَنظُرُواْ فِي مَلَكُوتِ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ
وَمَا خَلَقَ ٱللَّهُ مِن شَيۡءٖ وَأَنۡ عَسَىٰٓ أَن يَكُونَ

قَدِ ٱقْتَرَبَ أَجَلُهُمْ ۖ فَبِأَيِّ حَدِيثٍۭ بَعْدَهُۥ يُؤْمِنُونَ ﴿١٨٥﴾

របស់ពួកគេទេឬ? តើមានពាក្យសំដីណាបន្ទាប់ពីវា(គម្ពីរគួរអាន) ដែលធ្វើឱ្យពួកគេមានជំនឿនោះ?

مَن يُضْلِلِ ٱللَّهُ فَلَا هَادِىَ لَهُۥ ۚ وَيَذَرُهُمْ فِى طُغْيَٰنِهِمْ يَعْمَهُونَ ﴿١٨٦﴾

១៨៦-អ្នកណាហើយដែលអល់ឡោះធ្វើឱ្យវង្វេង គឺគ្មានអ្នកចង្អុលបង្ហាញដល់គេឡើយ ។ ហើយអល់ឡោះបោះបង់ចោលពួកទាំងនោះឱ្យស្ថិតក្នុងភាពវង្វេងរបស់ពួកគេដោយពួកគេមានការស្ទាក់ស្ទើរ ។

يَسْـَٔلُونَكَ عَنِ ٱلسَّاعَةِ أَيَّانَ مُرْسَىٰهَا ۖ قُلْ إِنَّمَا عِلْمُهَا عِندَ رَبِّى ۖ لَا يُجَلِّيهَا لِوَقْتِهَآ إِلَّا هُوَ ۚ ثَقُلَتْ فِى ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۚ لَا تَأْتِيكُمْ إِلَّا بَغْتَةً ۗ يَسْـَٔلُونَكَ كَأَنَّكَ حَفِىٌّ عَنْهَا ۖ قُلْ إِنَّمَا عِلْمُهَا عِندَ ٱللَّهِ وَلَٰكِنَّ أَكْثَرَ ٱلنَّاسِ لَا يَعْلَمُونَ ﴿١٨٧﴾

១៨៧-ពួកគេនឹងសួរអ្នក(មូហាំម៉ាត់)អំពីថ្ងៃបរលោកថា: តើពេលណាទើបវាកើតឡើង? ចូរអ្នកពោលថា: តាមពិតការដឹងពីបញ្ហាវានៅលើម្ចាស់របស់ខ្ញុំតែមួយគត់ ។ គ្មាននរណាម្នាក់អាចបញ្ជាក់ប្រាប់ពីពេលកំណត់របស់វាក្រៅពីទ្រង់ឡើយ ។ វាអាថិកំបាំងបំផុតសម្រាប់អ្នកដែលរស់នៅលើមេឃជាច្រើនជាន់ និងផែនដី ។ វានឹងកើតឡើងដល់ពួកអ្នកភ្លាមៗ ។ ពួកគេសួរអ្នកហាក់ដូចជាអ្នកដឹងពិតប្រាកដអំពីបញ្ហានេះ ។ ចូរអ្នកពោលថា: ជាការពិតណាស់ការដឹងពីបញ្ហារបស់វាគឺនៅលើអល់ឡោះតែមួយគត់ តែមនុស្សភាគច្រើនមិនដឹងឡើយ ។

قُل لَّآ أَمْلِكُ لِنَفْسِى نَفْعًا وَلَا ضَرًّا إِلَّا مَا شَآءَ ٱللَّهُ ۚ وَلَوْ كُنتُ أَعْلَمُ ٱلْغَيْبَ لَٱسْتَكْثَرْتُ مِنَ ٱلْخَيْرِ وَمَا مَسَّنِىَ ٱلسُّوٓءُ ۚ إِنْ أَنَا۠ إِلَّا نَذِيرٌ وَبَشِيرٌ لِّقَوْمٍ يُؤْمِنُونَ ﴿١٨٨﴾

១៨៨-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ខ្ញុំគ្មានលទ្ធភាពផ្តល់ផលប្រយោជន៍សម្រាប់ខ្លួនរបស់ខ្ញុំ និងរុញច្រានភាពគ្រោះថ្នាក់ចេញពីខ្លួនខ្ញុំបានឡើយ លើកលែងតែអ្វីដែលអល់ឡោះមានចេតនាប៉ុណ្ណោះ ។ ប្រសិនបើខ្ញុំបានដឹងនៃអាថិកំបាំង ខ្ញុំពិតជានឹងបង្កើនទូវអំពើល្អយ៉ាងច្រើន ហើយគ្មានអំពើអាក្រក់ណាមកបៀតបៀនរូបខ្ញុំបានឡើយ ។ ខ្ញុំគ្មានអ្វីក្រៅពីជាអ្នកដាស់តឿនព្រមាន និងផ្តល់ដំណឹងរីករាយដល់ក្រុមដែលមានជំនឿនោះឡើយ ។

۞ هُوَ ٱلَّذِى خَلَقَكُم مِّن نَّفْسٍ وَٰحِدَةٍ وَجَعَلَ مِنْهَا زَوْجَهَا لِيَسْكُنَ إِلَيْهَا ۖ فَلَمَّا تَغَشَّىٰهَا حَمَلَتْ حَمْلًا خَفِيفًا فَمَرَّتْ بِهِۦ ۖ فَلَمَّآ أَثْقَلَت دَّعَوَا ٱللَّهَ رَبَّهُمَا لَئِنْ ءَاتَيْتَنَا

១៨៩-អល់ឡោះជាអ្នកដែលបានបង្កើតពួកអ្នកមកពីមនុស្សតែមួយគត់(អាដាំ)ហើយអល់ឡោះបានបង្កើតចេញពីគាត់នូវភរិយារបស់គាត់(ហាវ៉ា) ដើម្បីឱ្យគាត់មានភាពរីករាយរស់នៅជាមួយនាង ។ នៅពេលគាត់បានរួមភេទជាមួយនាង នាងក៏មានផ្ទៃពោះដ៏ស្រាល ហើយនាងបន្តពរពោះនោះ ។ នៅពេលផ្ទៃពោះនោះមានភាពធ្ងន់ គេទាំងពីរក៏បានបួងសួងសុំពីអល់ឡោះដែលជាម្ចាស់

صَٰلِحٗا لَّنَكُونَنَّ مِنَ ٱلشَّٰكِرِينَ ﴿١٨٩﴾

របស់ពួកគេទាំងពីរថា: ពិតប្រាកដណាស់ ប្រសិនបើទ្រង់ប្រទានឱ្យពួកយើងនូវកូនដ៏ល្អម្នាក់នោះ ពួកយើងពិតជានឹងក្លាយទៅជាអ្នកដែលស្ថិតក្នុងចំណោមអ្នកដែលដឹងគុណ ។

فَلَمَّآ ءَاتَىٰهُمَا صَٰلِحٗا جَعَلَا لَهُۥ شُرَكَآءَ فِيمَآ ءَاتَىٰهُمَاۚ فَتَعَٰلَى ٱللَّهُ عَمَّا يُشۡرِكُونَ ﴿١٩٠﴾

១៩០-ក្រោយមកនៅពេលដែលអល់ឡោះបានប្រទានឱ្យពួកគាត់ទាំងពីរនូវកូនដ៏ល្អម្នាក់ ពួកគាត់ទាំងពីរក៏បានធ្វើស្ហ៊ីរិកចំពោះអល់ឡោះ(ក្នុងការដាក់ឈ្មោះកូន)នូវអ្វីដែលទ្រង់បានប្រទានឱ្យពួកគេទាំងពីរនេះទៅវិញ ។ ហើយអល់ឡោះខ្ពង់ខ្ពស់អំពីអ្វីដែលពួកគេកំពុងធ្វើស្ហ៊ីរិកនោះ ។

أَيُشۡرِكُونَ مَا لَا يَخۡلُقُ شَيۡـٔٗا وَهُمۡ يُخۡلَقُونَ ﴿١٩١﴾

១៩១-តើពួកអ្នកប្រព្រឹត្តស្ហ៊ីរិកចំពោះអល់ឡោះនូវវត្ថុដែលមិនអាចបង្កើតអ្វីបាន តែពួកគេត្រូវបានគេបង្កើតនោះឬ?

وَلَا يَسۡتَطِيعُونَ لَهُمۡ نَصۡرٗا وَلَآ أَنفُسَهُمۡ يَنصُرُونَ ﴿١٩٢﴾

១៩២-ហើយវាទាំងនោះ(រូបសំណាក)គ្មានលទ្ធភាពជួយដល់ពួកគេ(ពួកមូស្ហរីគីន)បានឡើយ ហើយពួកវាផ្ទាល់ក៏គ្មានលទ្ធភាពជួយខ្លួនឯងដែរ ។

وَإِن تَدۡعُوهُمۡ إِلَى ٱلۡهُدَىٰ لَا يَتَّبِعُوكُمۡۚ سَوَآءٌ عَلَيۡكُمۡ أَدَعَوۡتُمُوهُمۡ أَمۡ أَنتُمۡ صَٰمِتُونَ ﴿١٩٣﴾

១៩៣-ហើយប្រសិនបើពួកអ្នកបួងសួងសុំពួកវា(រូបសំណាក)ឱ្យចង្អុលបង្ហាញ ពួកវាមិនអាចធ្វើតាមពួកអ្នកឡើយ ។ វាដូចតែគ្នាទេ ទោះបីជាពួកអ្នកបានបួងសួងសុំពួកវា ឬពួកអ្នកនៅស្ងៀមក៏ដោយ ។

إِنَّ ٱلَّذِينَ تَدۡعُونَ مِن دُونِ ٱللَّهِ عِبَادٌ أَمۡثَالُكُمۡۖ فَٱدۡعُوهُمۡ فَلۡيَسۡتَجِيبُواْ لَكُمۡ إِن كُنتُمۡ صَٰدِقِينَ ﴿١٩٤﴾

១៩៤-ពិតប្រាកដណាស់ ពួកដែលពួកអ្នកកំពុងបួងសួងសុំផ្សេងពីអល់ឡោះនោះ គឺជាខ្ញុំរបស់អល់ឡោះដូចពួកអ្នកដែរ ។ ដូច្នេះ ចូរពួកអ្នកបួងសួងសុំពួកគេ ហើយឱ្យពួកគេឆ្លើយតបចំពោះពួកអ្នកមើល! ប្រសិនបើពួកអ្នកជាអ្នកដែលត្រឹមត្រូវមែននោះ ។

أَلَهُمۡ أَرۡجُلٞ يَمۡشُونَ بِهَآۖ أَمۡ لَهُمۡ أَيۡدٖ يَبۡطِشُونَ بِهَآۖ أَمۡ لَهُمۡ أَعۡيُنٞ يُبۡصِرُونَ بِهَآۖ أَمۡ لَهُمۡ ءَاذَانٞ يَسۡمَعُونَ بِهَاۗ قُلِ ٱدۡعُواْ شُرَكَآءَكُمۡ ثُمَّ كِيدُونِ فَلَا تُنظِرُونِ ﴿١٩٥﴾

១៩៥-តើពួកវា(រូបសំណាក)មានជើងអាចដើរ ឬពួកវាមានដៃអាចកាន់ ឬពួកវាមានភ្នែកអាចមើល ឬពួកវាមានត្រចៀកអាចស្តាប់បានឬ? ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកបួងសួងសុំម្ចាស់(រូបសំណាក)របស់ពួកអ្នក បន្ទាប់មកពួកអ្នកប្រើល្បិចកលតតាំងជាមួយខ្ញុំចុះ ហើយកុំបន្ធូរដៃឱ្យខ្ញុំឱ្យសោះ ។

إِنَّ وَلِـِّۧيَ ٱللَّهُ ٱلَّذِي نَزَّلَ ٱلۡكِتَٰبَۖ وَهُوَ يَتَوَلَّى

១៩៦-ពិតប្រាកដណាស់ អ្នកគាំពាររបស់ខ្ញុំនោះ គឺអល់ឡោះដែលបានបញ្ចុះគម្ពីរ(គួរអាន) ហើយទ្រង់ជាអ្នកគាំពារបណ្តាអ្នក

ដែលធ្វើអំពើល្អ។

១៩៧-ហើយពួកដែលពួកអ្នកកំពុងតែបួងសួងសុំផ្សេងពីទ្រង់នោះ ពួកគេមិនអាចជួយពួកអ្នកបានឡើយ ហើយពួកគេក៏មិនអាចជួយខ្លួនឯងបានដែរ។

១៩៨-ហើយប្រសិនបើពួកអ្នកបួងសួងសុំពួកវា(រូបសំណាក) ឱ្យចង្អុលបង្ហាញ ពួកវាមិនឮឡើយ។ អ្នកឃើញពួកវា ខណៈដែលពួកវាកំពុងសម្លឹងមើលអ្នក តែពួកវាមើលមិនឃើញឡើយ។

១៩៩-ចូរអ្នក(មូហាំម៉ាត់)ទទួលយកការអធ្យាស្រ័យ និងប្រើគ្នាឱ្យធ្វើល្អ និងចៀសវាងពីទង្វើរបស់ពួកដែលល្ងង់ខ្លៅ(កុំផ្តន្ទាទោសពួកគេ)។

២០០-ហើយប្រសិនបើមានការអុចអាលពីស្ហៃតនកើតមានចំពោះអ្នក ចូរអ្នកសុំពីអល់ឡោះឱ្យបញ្ចៀសឱ្យឆ្ងាយ(ពីវា)។ ពិតប្រាកដណាស់ ទ្រង់មហាឮ មហាដឹង។

២០១-ពិតប្រាកដណាស់ បណ្តាអ្នកដែលកោតខ្លាចអល់ឡោះ នៅពេលក្រុមស្ហៃតនបានមករំខានដល់ពួកគេ ពួកគេនឹកឃើញអល់ឡោះ។ ហើយនៅពេលនោះពួកគេគឺជាពួកដែលមើលឃើញ(ប្រការដែលត្រឹមត្រូវ)។

២០២-តែបងប្អូនរបស់ពួកគេ(ស្ហៃតននិងជិន)នៅតែជំរុញពួកគេឱ្យធ្លាក់ក្នុងភាពវង្វេង ក្រោយមកពួកគេគ្មានទីបញ្ចប់ឡើយ។

២០៣-ហើយនៅពេលដែលអ្នក(មូហាំម៉ាត់)មិនបាននាំមកដល់ពួកគេនូវអាយ៉ាត់ណាមួយនោះ ពួកគេបាននិយាយថាៈ ហេតុអ្វីបានជាអ្នកមិនប្រឌិតវាមក? ចូរអ្នកពោលថាៈ តាមពិតខ្ញុំធ្វើតាមអ្វីដែលគេបញ្ចុះមកឱ្យខ្ញុំពីម្ចាស់របស់ខ្ញុំតែប៉ុណ្ណោះ។ នេះ(គម្ពីរគួរអាន)គឺជាភស្តុតាងទាំងឡាយមកពីម្ចាស់របស់ពួកអ្នក និងជាការចង្អុលបង្ហាញ ហើយនិងជាការអាណិតស្រឡាញ់សម្រាប់ក្រុមដែលមានជំនឿ។

ٱلصَّٰلِحِينَ ١٩٦
وَٱلَّذِينَ تَدۡعُونَ مِن دُونِهِۦ لَا يَسۡتَطِيعُونَ
نَصۡرَكُمۡ وَلَآ أَنفُسَهُمۡ يَنصُرُونَ ١٩٧
وَإِن تَدۡعُوهُمۡ إِلَى ٱلۡهُدَىٰ لَا يَسۡمَعُواْۖ
وَتَرَىٰهُمۡ يَنظُرُونَ إِلَيۡكَ وَهُمۡ لَا يُبۡصِرُونَ ١٩٨
خُذِ ٱلۡعَفۡوَ وَأۡمُرۡ بِٱلۡعُرۡفِ وَأَعۡرِضۡ عَنِ
ٱلۡجَٰهِلِينَ ١٩٩
وَإِمَّا يَنزَغَنَّكَ مِنَ ٱلشَّيۡطَٰنِ نَزۡغٞ فَٱسۡتَعِذۡ
بِٱللَّهِۚ إِنَّهُۥ سَمِيعٌ عَلِيمٌ ٢٠٠
إِنَّ ٱلَّذِينَ ٱتَّقَوۡاْ إِذَا مَسَّهُمۡ طَٰٓئِفٞ مِّنَ
ٱلشَّيۡطَٰنِ تَذَكَّرُواْ فَإِذَا هُم مُّبۡصِرُونَ ٢٠١
وَإِخۡوَٰنُهُمۡ يَمُدُّونَهُمۡ فِي ٱلۡغَيِّ ثُمَّ لَا
يُقۡصِرُونَ ٢٠٢
وَإِذَا لَمۡ تَأۡتِهِم بِـَٔايَةٖ قَالُواْ لَوۡلَا ٱجۡتَبَيۡتَهَاۚ
قُلۡ إِنَّمَآ أَتَّبِعُ مَا يُوحَىٰٓ إِلَيَّ مِن رَّبِّيۚ هَٰذَا
بَصَآئِرُ مِن رَّبِّكُمۡ وَهُدٗى وَرَحۡمَةٞ لِّقَوۡمٖ
يُؤۡمِنُونَ ٢٠٣

وَإِذَا قُرِئَ ٱلۡقُرۡءَانُ فَٱسۡتَمِعُواْ لَهُۥ وَأَنصِتُواْ لَعَلَّكُمۡ تُرۡحَمُونَ ﴿٢٠٤﴾

២០៤-នៅពេលដែលមានគេសូត្រគម្ពីរគួរអាន ចូរពួកអ្នកស្តាប់វា និងត្រូវស្ងៀមស្ងាត់ សង្ឃឹមថាពួកអ្នកនឹងទទួលបានការអាណិតស្រឡាញ់។

وَٱذۡكُر رَّبَّكَ فِي نَفۡسِكَ تَضَرُّعٗا وَخِيفَةٗ وَدُونَ ٱلۡجَهۡرِ مِنَ ٱلۡقَوۡلِ بِٱلۡغُدُوِّ وَٱلۡأٓصَالِ وَلَا تَكُن مِّنَ ٱلۡغَٰفِلِينَ ﴿٢٠٥﴾

២០៥-ហើយចូរអ្នក(មូហាំម៉ាត់)រំលឹកទៅចំពោះម្ចាស់របស់អ្នកនៅក្នុងខ្លួនប្រាណរបស់អ្នកដោយឱនលំទោន និងកោតខ្លាចចុះហើយមិនត្រូវបញ្ចេញសំឡេងខ្លាំងៗនៅពេលព្រឹកនិងពេលរសៀលឡើយ ហើយកុំធ្វើឱ្យខ្លួនរបស់អ្នកស្ថិតនៅក្នុងចំណោមពួកដែលធ្វេសប្រហែសឱ្យសោះ។

إِنَّ ٱلَّذِينَ عِندَ رَبِّكَ لَا يَسۡتَكۡبِرُونَ عَنۡ عِبَادَتِهِۦ وَيُسَبِّحُونَهُۥ وَلَهُۥ يَسۡجُدُونَۤ۩ ﴿٢٠٦﴾

២០៦-ពិតប្រាកដណាស់ បណ្តាអ្នកដែលនៅជិតម្ចាស់របស់អ្នក (ម៉ាឡាអ៊ីកាត់) ពួកគេមិនដែលក្រអឺតក្រទមអំពីការគោរពប្រតិបត្តិចំពោះអល់ឡោះឡើយ ផ្ទុយទៅវិញពួកគេលើកតម្កើងទ្រង់ និងស៊ូជូតចំពោះទ្រង់។

## ជំពូកអាល់អាន់ហ្វាល

## سورة الأنفال

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់។

يَسۡـَٔلُونَكَ عَنِ ٱلۡأَنفَالِۖ قُلِ ٱلۡأَنفَالُ لِلَّهِ وَٱلرَّسُولِۖ فَٱتَّقُواْ ٱللَّهَ وَأَصۡلِحُواْ ذَاتَ بَيۡنِكُمۡۖ وَأَطِيعُواْ ٱللَّهَ وَرَسُولَهُۥٓ إِن كُنتُم مُّؤۡمِنِينَ ﴿١﴾

១-ពួកគេនឹងសួរអ្នក(មូហាំម៉ាត់)អំពីជ័យភណ្ឌ។ ចូរអ្នកពោលថា: ជ័យភណ្ឌទាំងនោះ គឺសម្រាប់អល់ឡោះនិងអ្នកនាំសារ។ ចូរពួកអ្នកកោតខ្លាចអល់ឡោះនិងផ្សះផ្សាគ្នារាល់បញ្ហាដែលកើតមានរវាងពួកអ្នក។ ចូរពួកអ្នកប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ប្រសិនបើពួកអ្នកជាអ្នកមានជំនឿមែននោះ។

إِنَّمَا ٱلۡمُؤۡمِنُونَ ٱلَّذِينَ إِذَا ذُكِرَ ٱللَّهُ وَجِلَتۡ قُلُوبُهُمۡ وَإِذَا تُلِيَتۡ عَلَيۡهِمۡ ءَايَٰتُهُۥ زَادَتۡهُمۡ إِيمَٰنٗا وَعَلَىٰ رَبِّهِمۡ يَتَوَكَّلُونَ ﴿٢﴾

២-តាមពិតបណ្តាអ្នកដែលមានជំនឿនោះ គឺជាបណ្តាអ្នកដែលនៅពេលមានគេរំលឹកចំពោះអល់ឡោះ ចិត្តរបស់ពួកគេមានការភ័យខ្លាចញាប់ញ័រ។ ហើយនៅពេលដែលមានគេសូត្រអាយ៉ាត់ៗរបស់ទ្រង់ឱ្យពួកគេស្តាប់ វាធ្វើឱ្យពួកគេកាន់តែមានជំនឿថែមទៀត។ ហើយចំពោះម្ចាស់របស់ពួកគេតែមួយគត់ ដែលពួកគេប្រគល់ការទុកចិត្ត។

ٱلَّذِينَ يُقِيمُونَ ٱلصَّلَوٰةَ وَمِمَّا رَزَقۡنَٰهُمۡ يُنفِقُونَ ﴿٣﴾

៣-គឺបណ្តាអ្នកដែលប្រតិបត្តិសឡាត និងបរិច្ចាគអំពីអ្វីដែលយើងបានផ្តល់ឱ្យពួកគេ។

أُوْلَٰٓئِكَ هُمُ ٱلۡمُؤۡمِنُونَ حَقّٗاۚ لَّهُمۡ دَرَجَٰتٌ عِندَ رَبِّهِمۡ وَمَغۡفِرَةٞ وَرِزۡقٞ كَرِيمٞ ﴿٤﴾

៤-អ្នកទាំងនោះគឺជាអ្នកដែលមានជំនឿយ៉ាងពិតប្រាកដ។ ពួកគេនឹងទទួលបានឋានៈដ៏ខ្ពង់ខ្ពស់ និងការអភ័យទោស ហើយនិងលាភសក្ការៈដ៏ប្រពៃ(ឋានសួគ៌)ពីម្ចាស់របស់ពួកគេ។

كَمَآ أَخۡرَجَكَ رَبُّكَ مِنۢ بَيۡتِكَ بِٱلۡحَقِّ وَإِنَّ فَرِيقٗا مِّنَ ٱلۡمُؤۡمِنِينَ لَكَٰرِهُونَ ﴿٥﴾

៥(ពួកអ្នកបានខ្វែងយោបល់គ្នាពីបញ្ហាជ័យភណ្ឌ)ក៏ដូចគ្នានេះដែរម្ចាស់របស់អ្នក(មូហាំម៉ាត់)បានប្រើឱ្យអ្នកចាកចេញពី លំនៅដ្ឋានរបស់អ្នកដោយមានការពិត។ ហើយពិតប្រាកដណាស់មួយក្រុមនៃអ្នក មានជំនឿមិនពេញចិត្ត(ក្នុងការចាកចេញពីលំនៅដ្ឋាន)ឡើយ។

يُجَٰدِلُونَكَ فِي ٱلۡحَقِّ بَعۡدَ مَا تَبَيَّنَ كَأَنَّمَا يُسَاقُونَ إِلَى ٱلۡمَوۡتِ وَهُمۡ يَنظُرُونَ ﴿٦﴾

៦-ពួកគេជជែកដេញដោលជាមួយអ្នកនៅក្នុងរឿងពិតបន្ទាប់ពីវាបានលាតត្រដាងហើយនោះ ហាក់បីដូចជាពួកគេត្រូវបានគេជំរុញឱ្យទៅរកសេចក្តីស្លាប់ ខណៈដែលពួកគេកំពុងមើលឃើញ(សេចក្តីស្លាប់នៅចំពោះមុខ)។

وَإِذۡ يَعِدُكُمُ ٱللَّهُ إِحۡدَى ٱلطَّآئِفَتَيۡنِ أَنَّهَا لَكُمۡ وَتَوَدُّونَ أَنَّ غَيۡرَ ذَاتِ ٱلشَّوۡكَةِ تَكُونُ لَكُمۡ وَيُرِيدُ ٱللَّهُ أَن يُحِقَّ ٱلۡحَقَّ بِكَلِمَٰتِهِۦ وَيَقۡطَعَ دَابِرَ ٱلۡكَٰفِرِينَ ﴿٧﴾

៧-ហើយ(ចូរចងចាំ)នៅពេលដែលអល់ឡោះបានសន្យាជាមួយពួកអ្នក(មូស្លីមឱ្យមានជ័យជំនះ)លើក្រុមមួយនៃក្រុមទាំងពីរ(កងទ័ព ឬក្រុមសត្វអូដ្ឋដឹកទំនិញ)ថាៈ ពិតប្រាកដណាស់ វាគឺសម្រាប់ពួកអ្នក។ ហើយពួកអ្នកចង់បានក្រុមដែលគ្មានអាវុធ(ក្រុមសត្វអូដ្ឋដឹកទំនិញ)ជារបស់ពួកអ្នក។ ហើយអល់ឡោះចង់ពង្រឹងការពិត(សាសនាអ៊ីស្លាម)តាមរយៈពាក្យពេចន៍របស់ទ្រង់ ហើយទ្រង់នឹងកាត់ផ្តាច់ឫសគល់ពួកគ្មានជំនឿ(ឧ.នៅសមរភូមិបាទើរ)។

لِيُحِقَّ ٱلۡحَقَّ وَيُبۡطِلَ ٱلۡبَٰطِلَ وَلَوۡ كَرِهَ ٱلۡمُجۡرِمُونَ ﴿٨﴾

៨-(ទង្វើដូចនោះ)ដើម្បីអល់ឡោះនឹងបង្ហាញនូវការពិត(សាសនាអ៊ីស្លាម) ហើយទ្រង់នឹងលុបបំបាត់ការភូតកុហក(ស្ហ៊ីរិក) ទោះបីជាពួកដែលធ្វើអំពើអាក្រក់ស្អប់ខ្ពើមក៏ដោយ។

إِذۡ تَسۡتَغِيثُونَ رَبَّكُمۡ فَٱسۡتَجَابَ لَكُمۡ أَنِّي مُمِدُّكُم بِأَلۡفٖ مِّنَ ٱلۡمَلَٰٓئِكَةِ مُرۡدِفِينَ ﴿٩﴾

៩-(ចូរចងចាំ)នៅពេលដែលពួកអ្នកបានបួងសួងសុំជំនួយពីម្ចាស់របស់ពួកអ្នក ហើយទ្រង់បានទទួលយកការបួងសួងសុំនោះពីពួកអ្នក(ដោយមានបន្ទូលថា)៖ ជាការពិតណាស់ យើងជាអ្នកជួយពួកអ្នកដោយបញ្ជូនម៉ាឡាអ៊ីកាត់មួយពាន់រូបជាបន្តបន្ទាប់។

وَمَا جَعَلَهُ ٱللَّهُ إِلَّا بُشۡرَىٰ وَلِتَطۡمَئِنَّ بِهِۦ

១០-ហើយអល់ឡោះធ្វើយ៉ាងនេះគ្មានអ្វីក្រៅពីការផ្តល់ដំណឹងរីករាយ និងដើម្បីធ្វើឱ្យចិត្តរបស់ពួកអ្នកនឹងនរដោយសារវា(ជ័យ

قُلُوبُكُمۡۚ وَمَا ٱلنَّصۡرُ إِلَّا مِنۡ عِندِ ٱللَّهِۚ إِنَّ
ٱللَّهَ عَزِيزٌ حَكِيمٌ ﴿١٠﴾

ជំនះ) នោះទេ ។ ហើយគ្មានជ័យជំនះណាក្រៅពីជ័យជំនះមកពីអល់ឡោះនោះឡើយ ។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

إِذۡ يُغَشِّيكُمُ ٱلنُّعَاسَ أَمَنَةً مِّنۡهُ وَيُنَزِّلُ عَلَيۡكُم
مِّنَ ٱلسَّمَآءِ مَآءً لِّيُطَهِّرَكُم بِهِۦ وَيُذۡهِبَ
عَنكُمۡ رِجۡزَ ٱلشَّيۡطَٰنِ وَلِيَرۡبِطَ عَلَىٰ قُلُوبِكُمۡ
وَيُثَبِّتَ بِهِ ٱلۡأَقۡدَامَ ﴿١١﴾

១១-(ចូរចងចាំ) នៅពេលដែលទ្រង់គ្របដណ្ដប់ពួកអ្នកដោយការងងុយគេងជាសុវត្ថិភាពពីទ្រង់ ។ ហើយទ្រង់បញ្ចុះទឹកភ្លៀងពីលើមេឃមកឱ្យពួកអ្នក ដើម្បីសំអាតពួកអ្នកតាមរយៈវា និងដើម្បីបំបាត់ការរំខានរបស់ស្ហៃតនចេញពីពួកអ្នក ហើយនិងដើម្បីពង្រឹងចិត្តរបស់ពួកអ្នក(ដោយមានភាពអត់ធ្មត់) ព្រមទាំងទ្រង់ធ្វើឱ្យមានការងាយស្រួលក្នុងការដើរដោយសារទឹកភ្លៀងនោះ ។

إِذۡ يُوحِي رَبُّكَ إِلَى ٱلۡمَلَٰٓئِكَةِ أَنِّي مَعَكُمۡ
فَثَبِّتُواْ ٱلَّذِينَ ءَامَنُواْۚ سَأُلۡقِي فِي قُلُوبِ
ٱلَّذِينَ كَفَرُواْ ٱلرُّعۡبَ فَٱضۡرِبُواْ فَوۡقَ
ٱلۡأَعۡنَاقِ وَٱضۡرِبُواْ مِنۡهُمۡ كُلَّ بَنَانٖ ﴿١٢﴾

១២-(ចូរចងចាំ) នៅពេលដែលម្ចាស់របស់អ្នកផ្ដល់វ៉ាហ៊ីទៅកាន់ពួកម៉ាឡាអ៊ីកាត់ថាៈ ពិតប្រាកដណាស់ យើងនៅជាមួយ(ជួយ) ពួកអ្នក ។ ដូច្នេះ ចូរពួកអ្នកពង្រឹងគោលជំហរបណ្ដាអ្នកដែលមានជំនឿចុះ យើងនឹងបញ្ចូលការភ័យខ្លាចទៅក្នុងចិត្តរបស់ពួកដែលគ្មានជំនឿ ។ ហើយចូរពួកអ្នកកាត់ក្បាលពួកគេ និងកាត់គ្រប់សន្លាក់ឆ្អឹងទាំងអស់(ដៃជើង) ក្នុងចំណោមពួកគេ ។

ذَٰلِكَ بِأَنَّهُمۡ شَآقُّواْ ٱللَّهَ وَرَسُولَهُۥۚ وَمَن
يُشَاقِقِ ٱللَّهَ وَرَسُولَهُۥ فَإِنَّ ٱللَّهَ شَدِيدُ
ٱلۡعِقَابِ ﴿١٣﴾

១៣-ទាំងនោះគឺដោយសារពួកគេបានប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ។ ជនណាដែលប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់នោះ ពិតប្រាកដណាស់អល់ឡោះគឺជាអ្នកដាក់ទណ្ឌកម្មយ៉ាងខ្លាំងក្លាបំផុត ។

ذَٰلِكُمۡ فَذُوقُوهُ وَأَنَّ لِلۡكَٰفِرِينَ عَذَابَ
ٱلنَّارِ ﴿١٤﴾

១៤-ទាំងនោះ(គឺជាទណ្ឌកម្ម) ។ ដូច្នេះ ចូរពួកអ្នកភ្លក្សរសជាតិវាចុះ ។ ហើយពិតប្រាកដណាស់ ទារុណកម្មនៃភ្លើងនរកនោះគឺសម្រាប់ពួកដែលគ្មានជំនឿ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا لَقِيتُمُ ٱلَّذِينَ كَفَرُواْ
زَحۡفٗا فَلَا تُوَلُّوهُمُ ٱلۡأَدۡبَارَ ﴿١٥﴾

១៥-ឱបណ្ដាអ្នកដែលមានជំនឿ! នៅពេលណាពួកអ្នកបានជួបប្រទះពួកគ្មានជំនឿ(ជាសត្រូវរបស់អ្នក) នៅក្នុងសមរភូមិ ចូរពួកអ្នកកុំបែរខ្នងដាក់ពួកគេ(រត់ចោលជួរ) ឱ្យសោះ ។

وَمَن يُوَلِّهِمۡ يَوۡمَئِذٖ دُبُرَهُۥٓ إِلَّا مُتَحَرِّفٗا لِّقِتَالٍ
أَوۡ مُتَحَيِّزًا إِلَىٰ فِئَةٖ فَقَدۡ بَآءَ بِغَضَبٖ مِّنَ

១៦-ហើយនៅថ្ងៃនោះ អ្នកណារត់ចោលជួររបស់គេក្រៅពីការរកល្បិចកលដើម្បីធ្វើសង្គ្រាម ឬដកថយទៅរកក្រុមរបស់គេផ្សេងទៀតនោះ អ្នកនោះពិតជាបានវិលត្រឡប់មកវិញដោយទទួលការ

ٱللَّهِ وَمَأْوَىٰهُ جَهَنَّمُ ۖ وَبِئْسَ ٱلْمَصِيرُ ﴿١٦﴾

ខឹងសម្បាពីអល់ឡោះ ហើយទីកន្លែងរបស់គេគឺនរកជើហាន់ណាំ។ ហើយវាជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត។

فَلَمْ تَقْتُلُوهُمْ وَلَٰكِنَّ ٱللَّهَ قَتَلَهُمْ ۚ وَمَا رَمَيْتَ إِذْ رَمَيْتَ وَلَٰكِنَّ ٱللَّهَ رَمَىٰ ۚ وَلِيُبْلِىَ ٱلْمُؤْمِنِينَ مِنْهُ بَلَآءً حَسَنًا ۚ إِنَّ ٱللَّهَ سَمِيعٌ عَلِيمٌ ﴿١٧﴾

១៧-ដូច្នោះ ពួកអ្នក(អ្នកមានជំនឿ) មិនបានសម្លាប់ពួកគេ (ពួកមូស្ហរិគីនក្នុងសង្គ្រាមបាទើរ) ទេ។ ក៏ប៉ុន្តែអល់ឡោះទេដែលបានសម្លាប់ពួកគេនោះ។ ហើយអ្នក(មូហាំម៉ាត់) មិនបានគ្រវែងឡើយនៅពេលដែលអ្នកគ្រវែងនោះ ក៏ប៉ុន្តែអល់ឡោះទេដែលបានគ្រវែង។ ហើយទ្រង់សាកល្បងចំពោះបណ្ដាអ្នកដែលមានជំនឿនូវការសាកល្បងមួយដ៏ល្អ។ ពិតប្រាកដណាស់ អល់ឡោះ មហាឮ មហាដឹង។

ذَٰلِكُمْ وَأَنَّ ٱللَّهَ مُوهِنُ كَيْدِ ٱلْكَٰفِرِينَ ﴿١٨﴾

១៨-ដូច្នោះ(ការដែលពួកអ្នកទទួលបានជោគជ័យគឺមកពីអល់ឡោះ)។ ហើយពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកដែលធ្វើឱ្យល្បិចកលរបស់ពួកគ្មានជំនឿទន់ខ្សោយ។

إِن تَسْتَفْتِحُوا۟ فَقَدْ جَآءَكُمُ ٱلْفَتْحُ ۖ وَإِن تَنتَهُوا۟ فَهُوَ خَيْرٌ لَّكُمْ ۖ وَإِن تَعُودُوا۟ نَعُدْ وَلَن تُغْنِىَ عَنكُمْ فِئَتُكُمْ شَيْـًٔا وَلَوْ كَثُرَتْ وَأَنَّ ٱللَّهَ مَعَ ٱلْمُؤْمِنِينَ ﴿١٩﴾

១៩-ប្រសិនបើពួកអ្នក(ពួកគ្មានជំនឿ)សុំពីអល់ឡោះ ដើម្បីទទួលបានជ័យជំនះ(លើពួកបំពាន) ភាពជោគជ័យពិតជាបានមកដល់ពួកអ្នកជាមិនខាន។ ក៏ប៉ុន្តែប្រសិនបើពួកអ្នកបញ្ឈប់ការប្រឆាំង(ចំពោះអល់ឡោះ) វាជាការប្រសើរបំផុតសម្រាប់ពួកអ្នក។ ប្រសិនបើពួកអ្នកវិលត្រឡប់(ទៅរកការប្រឆាំង)វិញ យើងនឹងធ្វើឱ្យពួកអ្នកទទួលការបរាជ័យទៀតជាមិនខាន។ វាគ្មានប្រយោជន៍អ្វីសម្រាប់ពួកអ្នកឡើយ ទោះបីជាក្រុមរបស់ពួកអ្នកមានចំនួនច្រើនលើសលប់យ៉ាងណាក៏ដោយ។ ហើយអល់ឡោះពិតជានៅជាមួយ(ជួយជ្រោមជ្រែង)បណ្ដាអ្នកដែលមានជំនឿ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓا۟ أَطِيعُوا۟ ٱللَّهَ وَرَسُولَهُۥ وَلَا تَوَلَّوْا۟ عَنْهُ وَأَنتُمْ تَسْمَعُونَ ﴿٢٠﴾

២០-ឱបណ្ដាអ្នកមានជំនឿ! ចូរគោរពប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ហើយកុំបោះបង់ចោលការគោរពប្រតិបត្តិនេះឱ្យសោះនៅពេលដែលពួកអ្នកបានដឹងឮ(គម្ពីរគួរអាន)ហើយនោះ។

وَلَا تَكُونُوا۟ كَٱلَّذِينَ قَالُوا۟ سَمِعْنَا وَهُمْ لَا يَسْمَعُونَ ﴿٢١﴾

២១-ចូរពួកអ្នកកុំធ្វើឱ្យដូចពួកដែលបាននិយាយថាៈ ពួកយើងបានឮហើយ តែពួកគេមិនយកចិត្តទុកដាក់នូវអ្វីដែលពួកគេបានឮឱ្យសោះ។

២២-ពិតប្រាកដណាស់ សត្វលោកដែលអាក្រក់នៅចំពោះមុខអល់ឡោះនោះ គឺអ្នកថ្លង់( បិទត្រចៀកមិនស្តាប់) គ( មិននិយាយពីការពិត) ដែលមិនយល់អ្វីទាំងអស់។

۞ إِنَّ شَرَّ ٱلدَّوَآبِّ عِندَ ٱللَّهِ ٱلصُّمُّ ٱلۡبُكۡمُ ٱلَّذِينَ لَا يَعۡقِلُونَ ﴿٢٢﴾

២៣- ហើយប្រសិនបើអល់ឡោះបានដឹងថាលក្ខណៈល្អប្រសើរមានចំពោះពួកគេ នោះទ្រង់នឹងធ្វើឱ្យពួកគេបានស្តាប់យល់។ តែទោះបីជាទ្រង់ធ្វើឱ្យពួកគេស្តាប់យល់ក៏ដោយ ក៏ពួកគេនៅតែបែរចេញដដែល ថែមទាំងពួកគេជាអ្នកដែលប្រឆាំងទៀតផង។

وَلَوۡ عَلِمَ ٱللَّهُ فِيهِمۡ خَيۡرًا لَّأَسۡمَعَهُمۡۖ وَلَوۡ أَسۡمَعَهُمۡ لَتَوَلَّواْ وَّهُم مُّعۡرِضُونَ ﴿٢٣﴾

២៤-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកឆ្លើយតបចំពោះអល់ឡោះ និងអ្នកនាំសារ នៅពេលដែលគេបានអំពាវនាវពួកអ្នកទៅរកអ្វីដែលគេធ្វើឱ្យពួកអ្នករស់ឡើងវិញ( ដើរតាមមាគ៌ានៃសាសនាអ៊ីស្លាម)។ ចូរពួកអ្នកជ្រាបថា: ពិតប្រាកដណាស់ អល់ឡោះអាចរាំងរវាងមនុស្ស និងចិត្តរបស់គេ( ដែលប៉ងប្រាថ្នា) ហើយពិតប្រាកដណាស់ ពួកអ្នកនឹងត្រូវគេប្រមូលផ្តុំទៅកាន់ទ្រង់វិញ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱسۡتَجِيبُواْ لِلَّهِ وَلِلرَّسُولِ إِذَا دَعَاكُمۡ لِمَا يُحۡيِيكُمۡۖ وَٱعۡلَمُوٓاْ أَنَّ ٱللَّهَ يَحُولُ بَيۡنَ ٱلۡمَرۡءِ وَقَلۡبِهِۦ وَأَنَّهُۥٓ إِلَيۡهِ تُحۡشَرُونَ ﴿٢٤﴾

២៥-ចូរពួកអ្នកកោតខ្លាចចំពោះភាពវឹកវរដែលមិនត្រឹមតែប៉ះពាល់ចំពោះពួកដែលបំពានក្នុងចំណោមពួកអ្នកប៉ុណ្ណោះទេ( តែវាអាចប៉ះពាល់ទាំងអ្នកធ្វើល្អ និងអ្នកធ្វើអាក្រក់)។ ចូរពួកអ្នកជ្រាបថា ពិតប្រាកដណាស់ អល់ឡោះជាអ្នកធ្វើទណ្ឌកម្មយ៉ាងខ្លាំងក្លាបំផុត។

وَٱتَّقُواْ فِتۡنَةً لَّا تُصِيبَنَّ ٱلَّذِينَ ظَلَمُواْ مِنكُمۡ خَآصَّةًۖ وَٱعۡلَمُوٓاْ أَنَّ ٱللَّهَ شَدِيدُ ٱلۡعِقَابِ ﴿٢٥﴾

២៦-ចូរពួកអ្នកចងចាំ នៅពេលដែលពួកអ្នកមានគ្នាតិច ហើយទន់ខ្សោយនៅទឹកដីនេះ( ម៉ាក្កះ) ខណៈដែលពួកអ្នកខ្លាចពួកប្រឆាំងចាប់ជំរិតពួកអ្នក តែទ្រង់បានផ្តល់កន្លែងជ្រកកោនដល់ពួកអ្នក( នៅម៉ាឌីណះ) និងពង្រឹងពួកអ្នកដោយជំនួយពីទ្រង់ ព្រមទាំងទ្រង់បានផ្តល់លាភសក្ការៈដ៏ល្អសម្រាប់ពួកអ្នក ដើម្បីឱ្យពួកអ្នកដឹងគុណ។

وَٱذۡكُرُوٓاْ إِذۡ أَنتُمۡ قَلِيلٌ مُّسۡتَضۡعَفُونَ فِي ٱلۡأَرۡضِ تَخَافُونَ أَن يَتَخَطَّفَكُمُ ٱلنَّاسُ فَـَٔاوَىٰكُمۡ وَأَيَّدَكُم بِنَصۡرِهِۦ وَرَزَقَكُم مِّنَ ٱلطَّيِّبَٰتِ لَعَلَّكُمۡ تَشۡكُرُونَ ﴿٢٦﴾

២៧-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំក្បត់នឹងអល់ឡោះ និងអ្នកនាំសារ ហើយនិងកុំក្បត់បណ្តាអ្នកដែលមានទំនុកចិត្តលើពួកអ្នក ខណៈដែលពួកអ្នកដឹងឱ្យសោះ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَخُونُواْ ٱللَّهَ وَٱلرَّسُولَ وَتَخُونُوٓاْ أَمَٰنَٰتِكُمۡ وَأَنتُمۡ تَعۡلَمُونَ ﴿٢٧﴾

២៨-ហើយចូរពួកអ្នកដឹងថា: ពិតប្រាកដណាស់ ទ្រព្យសម្បត្តិរបស់ពួកអ្នកនិងកូនចៅរបស់ពួកអ្នកគឺជាការសាកល្បង( ពី

وَٱعۡلَمُوٓاْ أَنَّمَآ أَمۡوَٰلُكُمۡ وَأَوۡلَٰدُكُمۡ فِتۡنَةٌ

អល់ឡោះ) ហើយពិតប្រាកដណាស់ នៅជាមួយអល់ឡោះនោះ គឺមានការតបស្នងដ៏ធំធេង។

وَأَنَّ ٱللَّهَ عِندَهُۥٓ أَجۡرٌ عَظِيمٞ ﴿٢٨﴾

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِن تَتَّقُواْ ٱللَّهَ يَجۡعَل
لَّكُمۡ فُرۡقَانٗا وَيُكَفِّرۡ عَنكُمۡ سَيِّـَٔاتِكُمۡ وَيَغۡفِرۡ
لَكُمۡۗ وَٱللَّهُ ذُو ٱلۡفَضۡلِ ٱلۡعَظِيمِ ﴿٢٩﴾

២៩-ឱបណ្តាអ្នកដែលមានជំនឿ ប្រសិនបើពួកអ្នកកោតខ្លាចអល់ឡោះនោះ ទ្រង់នឹងធ្វើឱ្យពួកអ្នកចេះបែងចែកខុសត្រូវ ហើយទ្រង់នឹងលុបបំបាត់ចោលអំពើអាក្រក់ទាំងឡាយរបស់ពួកអ្នក ព្រមទាំងទ្រង់អភ័យទោសដល់ពួកអ្នក។ អល់ឡោះគឺជាអ្នកដែលមានភាពសប្បុរសបំផុត។

وَإِذۡ يَمۡكُرُ بِكَ ٱلَّذِينَ كَفَرُواْ لِيُثۡبِتُوكَ أَوۡ
يَقۡتُلُوكَ أَوۡ يُخۡرِجُوكَۚ وَيَمۡكُرُونَ وَيَمۡكُرُ ٱللَّهُۖ
وَٱللَّهُ خَيۡرُ ٱلۡمَٰكِرِينَ ﴿٣٠﴾

៣០-ហើយ(ចូរចងចាំ)នៅពេលដែលពួកគ្មានជំនឿបានប្រើល្បិចកលចំពោះអ្នកដើម្បីឃុំឃាំងអ្នក ឬសម្លាប់អ្នក ឬបណ្តេញអ្នកចេញ(ពីស្រុកកំណើត)។ ពួកគេកំពុងប្រើល្បិចកល ហើយអល់ឡោះក៏ប្រើល្បិចកល(ចំពោះពួកគេ)វិញដែរ។ អល់ឡោះគឺជាអ្នកដែលប្រើល្បិចដ៏ប្រសើរបំផុត។

وَإِذَا تُتۡلَىٰ عَلَيۡهِمۡ ءَايَٰتُنَا قَالُواْ قَدۡ سَمِعۡنَا لَوۡ
نَشَآءُ لَقُلۡنَا مِثۡلَ هَٰذَآ إِنۡ هَٰذَآ إِلَّآ
أَسَٰطِيرُ ٱلۡأَوَّلِينَ ﴿٣١﴾

៣១-ហើយនៅពេលដែលមានគេសូត្រអាយ៉ាត់ៗរបស់យើងឱ្យពួកគេស្តាប់ ពួកគេបាននិយាយថា: ពួកយើងពិតជាបានឮ ប្រសិនបើពួកយើងចង់វិញនោះ ពួកយើងប្រាកដជានិយាយដូចនេះ។ តែនេះ(គម្ពីរគួរអាន)គ្មានអ្វីក្រៅពីរឿងនិទានរបស់អ្នកជំនាន់មុននោះឡើយ។

وَإِذۡ قَالُواْ ٱللَّهُمَّ إِن كَانَ هَٰذَا هُوَ ٱلۡحَقَّ
مِنۡ عِندِكَ فَأَمۡطِرۡ عَلَيۡنَا حِجَارَةٗ مِّنَ
ٱلسَّمَآءِ أَوِ ٱئۡتِنَا بِعَذَابٍ أَلِيمٖ ﴿٣٢﴾

៣២-ហើយ(ចូរចងចាំ)នៅពេលដែលពួកគេ(ពួកមូស្ហ្រីគីន) បាននិយាយថា: ឱអល់ឡោះ! ប្រសិនបើ(គម្ពីរគួរអាន) នេះវាជាការពិតមកពីទ្រង់មែននោះ សូមទ្រង់មេត្តាបញ្ចុះភ្លៀងជាដុំថ្មពីលើមេឃលើពួកយើង ឬផ្តល់ឱ្យពួកយើងនូវទារុណកម្មដ៏ឈឺចាប់មក។

وَمَا كَانَ ٱللَّهُ لِيُعَذِّبَهُمۡ وَأَنتَ فِيهِمۡۚ وَمَا
كَانَ ٱللَّهُ مُعَذِّبَهُمۡ وَهُمۡ يَسۡتَغۡفِرُونَ ﴿٣٣﴾

៣៣-អល់ឡោះមិនបានធ្វើទារុណកម្មពួកគេ ខណៈដែលអ្នក(មូហាំម៉ាត់)ស្ថិតនៅជាមួយពួកគេទេ។ ហើយអល់ឡោះក៏មិនមែនជាអ្នកធ្វើទារុណកម្មពួកគេនៅពេលដែលមានពួកគេសុំអភ័យទោសនោះដែរ។

وَمَا لَهُمۡ أَلَّا يُعَذِّبَهُمُ ٱللَّهُ وَهُمۡ يَصُدُّونَ
عَنِ ٱلۡمَسۡجِدِ ٱلۡحَرَامِ وَمَا كَانُوٓاْ أَوۡلِيَآءَهُۥٓۚ

៣៤-ហើយតើពួកគេមានអ្វីដែលអាចឱ្យអល់ឡោះមិនធ្វើទារុណកម្មពួកគេ ខណៈដែលពួកគេហាមឃាត់(អ្នកមានជំនឿក្នុងការតវ៉ាហ្វ និងការគោរពសក្ការៈ)ពីម៉ាស្ជិទហារ៉ាមនោះ? ពួកគេមិន

មែនជាអ្នកគ្រប់គ្រងវាឡើយ ។ អ្នកដែលគ្រប់គ្រងវាគ្មានអ្នកណា ក្រៅពីបណ្ដាអ្នកដែលកោតខ្លាចអល់ឡោះឡើយ ប៉ុន្តែពួកគេភាគច្រើនមិនដឹង ។

៣៥-ការគោរពសក្ការៈរបស់ពួកគេ(ពួកមូស្ហរីគីន)នៅម៉ាស្ជិទហារ៉ មនោះ គឺគ្មានអ្វីក្រៅពីការហួចលេង និងទះដៃឡើយ ។ ដូច្នេះ ចូរពួកអ្នកភ្លក្សទារុណកម្មនូវអ្វីដែលពួកអ្នកធ្លាប់បានប្រឆាំងចុះ ។

៣៦-ពិតប្រាកដណាស់ ពួកដែលប្រឆាំងចំណាយទ្រព្យសម្បត្តិរបស់ពួកគេដើម្បីរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ ។ ហើយពួកគេនឹងចំណាយវា បន្ទាប់មកការចំណាយនោះនឹងធ្វើឱ្យពួកគេមានការសោកស្ដាយ ។ បន្ទាប់មកទៀតពួកគេនឹងត្រូវបរាជ័យ ។ ហើយពួកដែលបានប្រឆាំងនឹងត្រូវគេប្រមូលផ្ដុំទៅកាន់នរកជើហាន់ណាំ ។

៣៧-គឺដើម្បីអល់ឡោះនឹងបែងចែករវាងអ្នកអាក្រក់ និងអ្នកល្អ(អ្នកគ្មានជំនឿ និងមានជំនឿ) ។ ហើយទ្រង់នឹងដាក់ពួកអាក្រក់ជាគំនរលើគ្នា ហើយទ្រង់នឹងប្រមូលគេទាំងអស់ ក្រោយមកទ្រង់ក៏ដាក់គេទៅក្នុងនរកជើហាន់ណាំ ។ ពួកទាំងនោះគឺជាពួកដែលខាតបង់ ។

៣៨-ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ពួកដែលប្រឆាំងថាៈ ប្រសិនបើពួកគេបញ្ឈប់(ការប្រឆាំងនឹងអល់ឡោះ) គេនឹងអភ័យទោសឱ្យពួកគេនូវអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមក ។ តែបើពួកគេវិលត្រឡប់(ទៅរកការប្រឆាំង)ម្ដងទៀត គឺមាគ៌ារបស់ពួកជំនាន់មុនបានកើតមានឡើងរួចទៅហើយ ។

៣៩-ហើយចូរពួកអ្នក(អ្នកមានជំនឿ)ប្រយុទ្ធនឹងពួកគេ(ពួកមូស្ហរីគីន)រហូតដល់ភាពវឹកវរ(ប្រការស្ហ៊ីរិក)លែងកើតមាន និងធ្វើឱ្យការគោរពសក្ការៈទាំងអស់ទៅចំពោះអល់ឡោះតែមួយគត់ ។ ហើយប្រសិនបើពួកគេបានបញ្ឈប់(ភាពវឹកវរ) ពិតប្រាកដណាស់ អល់ឡោះឃើញនូវអ្វីដែលពួកគេប្រព្រឹត្ត ។

៤០-តែប្រសិនបើពួកគេបានបែរចេញវិញនោះ ចូរពួកអ្នកជ្រាប

إِنْ أَوْلِيَآؤُهُۥٓ إِلَّا ٱلْمُتَّقُونَ وَلَٰكِنَّ أَكْثَرَهُمْ
لَا يَعْلَمُونَ ٣٤

وَمَا كَانَ صَلَاتُهُمْ عِندَ ٱلْبَيْتِ إِلَّا مُكَآءً
وَتَصْدِيَةً ۚ فَذُوقُوا۟ ٱلْعَذَابَ بِمَا كُنتُمْ
تَكْفُرُونَ ٣٥

إِنَّ ٱلَّذِينَ كَفَرُوا۟ يُنفِقُونَ أَمْوَٰلَهُمْ
لِيَصُدُّوا۟ عَن سَبِيلِ ٱللَّهِ ۚ فَسَيُنفِقُونَهَا ثُمَّ
تَكُونُ عَلَيْهِمْ حَسْرَةً ثُمَّ يُغْلَبُونَ ۗ
وَٱلَّذِينَ كَفَرُوٓا۟ إِلَىٰ جَهَنَّمَ يُحْشَرُونَ ٣٦

لِيَمِيزَ ٱللَّهُ ٱلْخَبِيثَ مِنَ ٱلطَّيِّبِ وَيَجْعَلَ
ٱلْخَبِيثَ بَعْضَهُۥ عَلَىٰ بَعْضٍ فَيَرْكُمَهُۥ
جَمِيعًا فَيَجْعَلَهُۥ فِى جَهَنَّمَ ۚ أُو۟لَٰٓئِكَ هُمُ
ٱلْخَٰسِرُونَ ٣٧

قُل لِّلَّذِينَ كَفَرُوٓا۟ إِن يَنتَهُوا۟ يُغْفَرْ لَهُم مَّا
قَدْ سَلَفَ وَإِن يَعُودُوا۟ فَقَدْ مَضَتْ سُنَّتُ
ٱلْأَوَّلِينَ ٣٨

وَقَٰتِلُوهُمْ حَتَّىٰ لَا تَكُونَ فِتْنَةٌ وَيَكُونَ
ٱلدِّينُ كُلُّهُۥ لِلَّهِ ۚ فَإِنِ ٱنتَهَوْا۟ فَإِنَّ ٱللَّهَ
بِمَا يَعْمَلُونَ بَصِيرٌ ٣٩

وَإِن تَوَلَّوْا۟ فَٱعْلَمُوٓا۟ أَنَّ ٱللَّهَ مَوْلَىٰكُمْ ۚ نِعْمَ

ٱلۡمَوۡلَىٰ وَنِعۡمَ ٱلنَّصِيرُ ٤٠

ថា: ពិតប្រាកដណាស់ អល់ឡោះជាអ្នកគាំពារពួកអ្នក។ ទ្រង់ជាអ្នកគាំពារ និងជាអ្នកជួយដ៏ប្រសើរបំផុត។

۞وَٱعۡلَمُوٓاْ أَنَّمَا غَنِمۡتُم مِّن شَيۡءٖ فَأَنَّ لِلَّهِ
خُمُسَهُۥ وَلِلرَّسُولِ وَلِذِي ٱلۡقُرۡبَىٰ وَٱلۡيَتَٰمَىٰ
وَٱلۡمَسَٰكِينِ وَٱبۡنِ ٱلسَّبِيلِ إِن كُنتُمۡ
ءَامَنتُم بِٱللَّهِ وَمَآ أَنزَلۡنَا عَلَىٰ عَبۡدِنَا يَوۡمَ
ٱلۡفُرۡقَانِ يَوۡمَ ٱلۡتَقَى ٱلۡجَمۡعَانِۗ وَٱللَّهُ عَلَىٰ
كُلِّ شَيۡءٖ قَدِيرٌ ٤١

៤១-ចូរពួកអ្នកជ្រាបថា: អ្វីដែលពួកអ្នកទទួលបានពីជ័យភណ្ឌនោះ គឺមួយភាគប្រាំសម្រាប់អល់ឡោះនិងសម្រាប់អ្នកនាំសារ សាច់សារលោហិតរបស់អ្នកនាំសារ កូនកំព្រា អ្នកក្រីក្រ និងអ្នកធ្វើដំណើរដាច់ស្បៀង ប្រសិនបើពួកអ្នកមានជំនឿលើអល់ឡោះ និងអ្វីដែលយើងបានបញ្ចុះមកឱ្យខ្ញុំរបស់យើងនៅថ្ងៃបែងចែក(រវាងខុសនិងត្រូវ) ជាថ្ងៃដែលក្រុមទាំងពីរបានជួបគ្នា(នៅសមរភូមិបាទើរ)។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់។

إِذۡ أَنتُم بِٱلۡعُدۡوَةِ ٱلدُّنۡيَا وَهُم بِٱلۡعُدۡوَةِ
ٱلۡقُصۡوَىٰ وَٱلرَّكۡبُ أَسۡفَلَ مِنكُمۡۚ وَلَوۡ
تَوَاعَدتُّمۡ لَٱخۡتَلَفۡتُمۡ فِي ٱلۡمِيعَٰدِ وَلَٰكِن
لِّيَقۡضِيَ ٱللَّهُ أَمۡرٗا كَانَ مَفۡعُولٗا لِّيَهۡلِكَ
مَنۡ هَلَكَ عَنۢ بَيِّنَةٖ وَيَحۡيَىٰ مَنۡ حَيَّ عَنۢ
بَيِّنَةٖۗ وَإِنَّ ٱللَّهَ لَسَمِيعٌ عَلِيمٌ ٤٢

៤២-(ចូរចងចាំ)នៅពេលដែលពួកអ្នកនៅជិតជ្រុងម្ខាងនៃជ្រលង(ម៉ាឌីណះ) ហើយពួកគេស្ថិតនៅជ្រុងម្ខាងទៀតឆ្ងាយពីជ្រលង។ ចំណែកឯក្រុមអ្នកដឹកជញ្ជូនទំនិញគឺស្ថិតនៅទាបជាងពួកអ្នក។ ទោះបីជាពួកអ្នកបានព្យាយាមជួបគ្នាក៏ដោយ ក៏ពួកអ្នកមិនអាចជួបគ្នាបានដែរ។ ប៉ុន្តែ(អាចប្រមូលផ្តុំពួកអ្នកដោយគ្មានការសន្យា) ដើម្បីអល់ឡោះនឹងសម្រេចនូវអ្វីដែលបានកំណត់រួច។ ដើម្បីឱ្យអ្នកដែលប្រឆាំងនឹងភស្តុតាងដ៏ច្បាស់លាស់(បានមកដល់ពួកគេ)កាន់តែប្រឆាំង និងដើម្បីឱ្យអ្នកដែលបានជឿនឹងភស្តុតាងដ៏ច្បាស់លាស់កាន់តែមានជំនឿថែមទៀត។ ហើយពិតប្រាកដណាស់ អល់ឡោះមហាឮ មហាដឹង។

إِذۡ يُرِيكَهُمُ ٱللَّهُ فِي مَنَامِكَ قَلِيلٗاۖ وَلَوۡ
أَرَىٰكَهُمۡ كَثِيرٗا لَّفَشِلۡتُمۡ وَلَتَنَٰزَعۡتُمۡ فِي
ٱلۡأَمۡرِ وَلَٰكِنَّ ٱللَّهَ سَلَّمَۚ إِنَّهُۥ عَلِيمُۢ بِذَاتِ
ٱلصُّدُورِ ٤٣

៤៣-(ចូរចងចាំ)នៅពេលដែលអល់ឡោះបានបង្ហាញអ្នកឱ្យឃើញពួកគេ(សត្រូវ)នៅក្នុងសុបិនរបស់អ្នកនូវចំនួនដ៏តិចតួច។ ប្រសិនបើទ្រង់បានឱ្យអ្នកឃើញពួកគេមានចំនួនច្រើនវិញនោះ ពួកអ្នកពិតជារាថយ ហើយពួកអ្នកពិតជាមានការខ្វែងយោបល់គ្នាក្នុងរឿងនោះ(សង្គ្រាម)។ ប៉ុន្តែអល់ឡោះបានធ្វើឱ្យពួកអ្នកមានសុវត្ថិភាព។ ពិតប្រាកដណាស់ ទ្រង់ដឹងបំផុតនូវអ្វីដែលមាននៅក្នុងចិត្ត។

وَإِذۡ يُرِيكُمُوهُمۡ إِذِ ٱلۡتَقَيۡتُمۡ فِيٓ أَعۡيُنِكُمۡ
قَلِيلٗا وَيُقَلِّلُكُمۡ فِيٓ أَعۡيُنِهِمۡ لِيَقۡضِيَ ٱللَّهُ

៤៤-ហើយ(ចូរចងចាំ)នៅពេលដែលពួកអ្នកបានជួប(កងទ័ពសត្រូវនៅសមរភូមិបាទើរ) អល់ឡោះបានធ្វើឱ្យពួកអ្នកឃើញពួកគេ(សត្រូវ)មានចំនួនតិចនៅក្នុងកែវភ្នែករបស់ពួកអ្នក ហើយ

أَمۡرٗا كَانَ مَفۡعُولٗاۗ وَإِلَى ٱللَّهِ تُرۡجَعُ
ٱلۡأُمُورُ ﴿٤٤﴾

អល់ឡោះក៏ធ្វើឱ្យពួកអ្នកមានចំនួនតិចនៅក្នុងកែវភ្នែករបស់ពួកគេដែរ ដើម្បីអល់ឡោះសម្រេចនូវកិច្ចការដែលទ្រង់បានកំណត់រួច។ ហើយកិច្ចការទាំងអស់នឹងត្រូវវិលត្រឡប់ទៅកាន់អល់ឡោះវិញ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا لَقِيتُمۡ فِئَةٗ
فَٱثۡبُتُواْ وَٱذۡكُرُواْ ٱللَّهَ كَثِيرٗا لَّعَلَّكُمۡ
تُفۡلِحُونَ ﴿٤٥﴾

៤៥-ឱបណ្តាអ្នកមានជំនឿ! នៅពេលពួកអ្នកបានជួបក្រុមមួយ (កងទ័ពសត្រូវ) ចូរពួកអ្នកមានភាពនឹងនរ និងនឹកឃើញអល់ឡោះឱ្យបានច្រើនដើម្បីឱ្យពួកអ្នកទទួលបានជោគជ័យ។

وَأَطِيعُواْ ٱللَّهَ وَرَسُولَهُۥ وَلَا تَنَٰزَعُواْ فَتَفۡشَلُواْ
وَتَذۡهَبَ رِيحُكُمۡۖ وَٱصۡبِرُوٓاْۚ إِنَّ ٱللَّهَ مَعَ
ٱلصَّٰبِرِينَ ﴿٤٦﴾

៤៦-ហើយចូរពួកអ្នកគោរពប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ហើយកុំឱ្យពួកអ្នកខ្វែងយោបល់គ្នាឱ្យសោះ ពីព្រោះវាធ្វើឱ្យពួកអ្នករាថយ និងបាត់បង់ភាពខ្លាំងក្លារបស់ពួកអ្នក។ ហើយចូរពួកអ្នកអត់ធ្មត់។ ពិតប្រាកដណាស់ អល់ឡោះនៅជាមួយបណ្តាអ្នកដែលអត់ធ្មត់។

وَلَا تَكُونُواْ كَٱلَّذِينَ خَرَجُواْ مِن دِيَٰرِهِم بَطَرٗا
وَرِئَآءَ ٱلنَّاسِ وَيَصُدُّونَ عَن سَبِيلِ ٱللَّهِۚ
وَٱللَّهُ بِمَا يَعۡمَلُونَ مُحِيطٞ ﴿٤٧﴾

៤៧-ហើយចូរពួកអ្នក(អ្នកមានជំនឿ)កុំធ្វើដូចពួកដែលបានចាកចេញពីលំនៅដ្ឋានរបស់ពួកគេដោយភាពក្អេងក្អាង និងដើម្បីឱ្យមនុស្សឃើញ ថែមទាំងហាមឃាត់អ្នកដទៃអំពីមាគ៌ារបស់អល់ឡោះឱ្យសោះ។ ហើយអល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកគេប្រព្រឹត្ត។

وَإِذۡ زَيَّنَ لَهُمُ ٱلشَّيۡطَٰنُ أَعۡمَٰلَهُمۡ وَقَالَ لَا
غَالِبَ لَكُمُ ٱلۡيَوۡمَ مِنَ ٱلنَّاسِ وَإِنِّي
جَارٞ لَّكُمۡۖ فَلَمَّا تَرَآءَتِ ٱلۡفِئَتَانِ نَكَصَ
عَلَىٰ عَقِبَيۡهِ وَقَالَ إِنِّي بَرِيٓءٞ مِّنكُمۡ إِنِّيٓ
أَرَىٰ مَا لَا تَرَوۡنَ إِنِّيٓ أَخَافُ ٱللَّهَۚ وَٱللَّهُ
شَدِيدُ ٱلۡعِقَابِ ﴿٤٨﴾

៤៨-ហើយ(ចូរចងចាំ)នៅពេលដែលស្ហៃតនបានលំអទង្វើទាំងឡាយរបស់ពួកគេសម្រាប់ពួកគេ ដោយបាននិយាយថា: គ្មានមនុស្សណាម្នាក់ដែលអាចយកជ័យជំនះលើពួកអ្នកបានឡើយនៅថ្ងៃនេះ។ ហើយពិតប្រាកដណាស់ ខ្ញុំជាអ្នកនៅជិតពួកអ្នក(ជាអ្នកជួយ)។ ប៉ុន្តែនៅពេលដែលក្រុមទាំងពីរ(អ្នកមានជំនឿ និងពួកគ្មានជំនឿ) បានឃើញគ្នានោះ វាក៏បានរត់ចេញ ហើយនិយាយថា: ពិតប្រាកដណាស់ ខ្ញុំមិនជាប់ពាក់ព័ន្ធជាមួយពួកអ្នកឡើយ។ ខ្ញុំពិតជាមើលឃើញនូវអ្វីដែលពួកអ្នកមើលមិនឃើញ។ ពិតប្រាកដណាស់ ខ្ញុំខ្លាចអល់ឡោះ ហើយអល់ឡោះជាអ្នកធ្វើទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។

إِذۡ يَقُولُ ٱلۡمُنَٰفِقُونَ وَٱلَّذِينَ فِي قُلُوبِهِم
مَّرَضٌ غَرَّ هَٰٓؤُلَآءِ دِينُهُمۡۗ وَمَن يَتَوَكَّلۡ

៤៩-(ចូរចងចាំ)នៅពេលដែលពួកពុតត្បុតនិងពួកដែលនៅក្នុងចិត្តរបស់ពួកគេមានជំងឺបាននិយាយថា: សាសនារបស់ពួកគេបានបោកប្រាស់ពួកគេ។ ហើយអ្នកណាដែលបានប្រគល់ការទុកចិត្តទៅ

عَلَى ٱللَّهِ فَإِنَّ ٱللَّهَ عَزِيزٌ حَكِيمٌ ﴿٤٩﴾

ចំពោះអល់ឡោះ ពិតប្រាកដណាស់ អល់ឡោះគឺមហាខ្លាំងពូកែ
មហាគតិបណ្ឌិត ។

وَلَوْ تَرَىٰٓ إِذْ يَتَوَفَّى ٱلَّذِينَ كَفَرُوا۟ ۙ ٱلْمَلَٰٓئِكَةُ
يَضْرِبُونَ وُجُوهَهُمْ وَأَدْبَٰرَهُمْ وَذُوقُوا۟
عَذَابَ ٱلْحَرِيقِ ﴿٥٠﴾

៥០-ប្រសិនបើអ្នក(មូហាំម៉ាត់) អាចមើលឃើញនៅពេល
ម៉ាឡាអ៊ីកាត់យកព្រលឹងអ្នកដែលប្រឆាំងនោះ(អ្នកនឹងឃើញ)
ម៉ាឡាអ៊ីកាត់វាយមុខនិងខ្នងរបស់ពួកគេ(ដោយពោលថា) ចូរពួក
អ្នក(ពួកមូស្ហរីគីន)ភ្លក្សទារុណកម្មនៃភ្លើងឆេះដ៏សន្ធោសន្ធៅចុះ ។

ذَٰلِكَ بِمَا قَدَّمَتْ أَيْدِيكُمْ وَأَنَّ ٱللَّهَ
لَيْسَ بِظَلَّٰمٍ لِّلْعَبِيدِ ﴿٥١﴾

៥១-ទាំងនោះគឺដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត
កន្លងមក ។ ហើយពិតប្រាកដណាស់ អល់ឡោះមិនមែនជាអ្នកបំពាន
លើខ្ញុំរបស់ទ្រង់ឡើយ ។

كَدَأْبِ ءَالِ فِرْعَوْنَ ۙ وَٱلَّذِينَ مِن قَبْلِهِمْ ۚ
كَفَرُوا۟ بِـَٔايَٰتِ ٱللَّهِ فَأَخَذَهُمُ ٱللَّهُ بِذُنُوبِهِمْ ۗ
إِنَّ ٱللَّهَ قَوِىٌّ شَدِيدُ ٱلْعِقَابِ ﴿٥٢﴾

៥២-វាដូចជាអត្តចរិតរបស់ពួកដែលតាមហ្វៀរអោន និងពួក
ដែលពីមុនពួកគេ ដែលពួកគេបានប្រឆាំងនឹងភស្តុតាង១របស់
អល់ឡោះ ។ ដូច្នេះ អល់ឡោះបានដាក់ទណ្ឌកម្មពួកគេដោយសារ
បាបកម្មរបស់ពួកគេ ។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកដែល
ខ្លាំងក្លា និងជាអ្នកដាក់ទណ្ឌកម្មដ៏ធ្ងន់ធ្ងរបំផុត ។

ذَٰلِكَ بِأَنَّ ٱللَّهَ لَمْ يَكُ مُغَيِّرًا نِّعْمَةً أَنْعَمَهَا
عَلَىٰ قَوْمٍ حَتَّىٰ يُغَيِّرُوا۟ مَا بِأَنفُسِهِمْ ۙ وَأَنَّ
ٱللَّهَ سَمِيعٌ عَلِيمٌ ﴿٥٣﴾

៥៣-នោះគឺដោយសារតែអល់ឡោះមិនមែនជាអ្នកផ្លាស់ប្តូរ
នៀកម៉ាត់ដែលទ្រង់បានផ្តល់វាទៅលើក្រុមណាមួយឡើយ លុះត្រា
តែពួកគេផ្លាស់ប្តូរអ្វីមួយនោះដោយខ្លួនឯង ។ ហើយពិតប្រាកដ
ណាស់ អល់ឡោះមហាឮ មហាដឹង ។

كَدَأْبِ ءَالِ فِرْعَوْنَ ۙ وَٱلَّذِينَ مِن قَبْلِهِمْ ۚ
كَذَّبُوا۟ بِـَٔايَٰتِ رَبِّهِمْ فَأَهْلَكْنَٰهُم بِذُنُوبِهِمْ
وَأَغْرَقْنَآ ءَالَ فِرْعَوْنَ ۚ وَكُلٌّ كَانُوا۟
ظَٰلِمِينَ ﴿٥٤﴾

៥៤-វាដូចជាអត្តចរិតរបស់ពួកដែលតាមហ្វៀរអោន និងពួក
ដែលពីមុនពួកគេ ។ ពួកគេបានបដិសេធនឹងភស្តុតាង១នៃម្ចាស់របស់
ពួកគេ ។ ដូច្នេះយើងក៏បានបំផ្លាញពួកគេដោយសារតែទោសកំហុស
របស់ពួកគេ ហើយយើងបានធ្វើឱ្យក្រុមរបស់ហ្វៀរអោនលង់ទឹក ។
ហើយពួកគេទាំងអស់គ្នាគឺជាពួកដែលបំពាន ។

إِنَّ شَرَّ ٱلدَّوَآبِّ عِندَ ٱللَّهِ ٱلَّذِينَ كَفَرُوا۟ فَهُمْ
لَا يُؤْمِنُونَ ﴿٥٥﴾

៥៥-ពិតប្រាកដណាស់ សត្វលោកដែលអាក្រក់បំផុតនៅចំពោះ
មុខអល់ឡោះនោះគឺពួកដែលប្រឆាំងដោយពួកគេគ្មានជំនឿ ។

ٱلَّذِينَ عَٰهَدتَّ مِنْهُمْ ثُمَّ يَنقُضُونَ

៥៦-គឺពួកដែលអ្នក(មូហាំម៉ាត់) បានធ្វើកិច្ចសន្យាជាមួយ
ពួកគេ បន្ទាប់មកពួកគេក្បត់កិច្ចសន្យារបស់ពួកគេនោះរាល់១

عَهْدَهُمْ فِي كُلِّ مَرَّةٍ وَهُمْ لَا
يَتَّقُونَ ﴿٥٦﴾

លើក ហើយពួកគេមិនកោតខ្លាចអល់ឡោះឡើយ ។

فَإِمَّا تَثْقَفَنَّهُمْ فِي ٱلْحَرْبِ فَشَرِّدْ بِهِم مَّنْ
خَلْفَهُمْ لَعَلَّهُمْ يَذَّكَّرُونَ ﴿٥٧﴾

៥៧-ប្រសិនបើអ្នក(មូហាំម៉ាត់)អាចយកជ័យជំនះលើពួកគេ(អ្នកមិនគោរពកិច្ចសន្យា)ក្នុងសមរភូមិ ចូរអ្នកដាក់ទណ្ឌកម្មពួកគេ ដើម្បីបំបែកពួកគេចេញពីអ្នកដែលនៅខាងក្រោយពួកគេ សង្ឃឹមថា ពួកគេនឹងចងចាំ ។

وَإِمَّا تَخَافَنَّ مِن قَوْمٍ خِيَانَةً فَٱنۢبِذْ إِلَيْهِمْ
عَلَىٰ سَوَآءٍ ۚ إِنَّ ٱللَّهَ لَا يُحِبُّ ٱلْخَآئِنِينَ ﴿٥٨﴾

៥៨-ប៉ុន្តែប្រសិនបើអ្នកមានការភ័យខ្លាចអំពីក្រុមដែលមិនគោរពកិច្ចសន្យានោះ ចូរអ្នកបង្ហាញ(កិច្ចសន្យា)ដល់ពួកគេ ដើម្បីឱ្យក្រុមទាំងពីរបានដឹងដូចគ្នា(ដើម្បីបញ្ចប់កិច្ចសន្យា) ។ ពិតប្រាកដណាស់ អល់ឡោះមិនចូលចិត្តពួកដែលក្បត់កិច្ចសន្យាឡើយ ។

وَلَا يَحْسَبَنَّ ٱلَّذِينَ كَفَرُوا۟ سَبَقُوٓا۟ ۚ إِنَّهُمْ لَا
يُعْجِزُونَ ﴿٥٩﴾

៥៩-ហើយចូរកុំឱ្យពួកដែលប្រឆាំងគិតថា ពួកគេអាចគេចផុត(ពីទណ្ឌកម្ម)ឱ្យសោះ ។ ពិតប្រាកដណាស់ ពួកគេគ្មានលទ្ធភាពរត់គេចបានឡើយ ។

وَأَعِدُّوا۟ لَهُم مَّا ٱسْتَطَعْتُم مِّن قُوَّةٍ وَمِن
رِّبَاطِ ٱلْخَيْلِ تُرْهِبُونَ بِهِۦ عَدُوَّ ٱللَّهِ
وَعَدُوَّكُمْ وَءَاخَرِينَ مِن دُونِهِمْ لَا
تَعْلَمُونَهُمُ ٱللَّهُ يَعْلَمُهُمْ ۚ وَمَا تُنفِقُوا۟ مِن
شَيْءٍ فِي سَبِيلِ ٱللَّهِ يُوَفَّ إِلَيْكُمْ وَأَنتُمْ لَا
تُظْلَمُونَ ﴿٦٠﴾

៦០-ចូរពួកអ្នក(អ្នកមានជំនឿ)រៀបចំតាមលទ្ធភាពរបស់ពួកអ្នកនូវកម្លាំងទ័ពនិងសេះសង្គ្រាម ដោយពួកអ្នកត្រូវបន្លាចនឹងវាដល់សត្រូវរបស់អល់ឡោះ និងសត្រូវរបស់ពួកអ្នក ព្រមទាំងពួកផ្សេងទៀតក្រៅពីពួកគេដែលពួកអ្នកមិនស្គាល់ពួកគេ តែអល់ឡោះស្គាល់ពួកគេ ។ អ្វីក៏ដោយដែលពួកអ្នកបានបរិច្ចាគក្នុងមាគ៌ារបស់អល់ឡោះនោះ គេប្រាកដជានឹងតបស្នងដល់ពួកអ្នកវិញ ។ ហើយពួកអ្នកមិនត្រូវបានគេបំពានឡើយ ។

۞ وَإِن جَنَحُوا۟ لِلسَّلْمِ فَٱجْنَحْ لَهَا وَتَوَكَّلْ
عَلَى ٱللَّهِ ۚ إِنَّهُۥ هُوَ ٱلسَّمِيعُ ٱلْعَلِيمُ ﴿٦١﴾

៦១-ហើយប្រសិនបើពួកគេទោរទន់ទៅរកសន្តិភាពអ្នក(មូហាំ-ម៉ាត់)ក៏ត្រូវទោរទន់ទៅរកសន្តិភាពវិញដែរ ។ ហើយចូរអ្នកប្រគល់ការទុកចិត្តទៅចំពោះអល់ឡោះ ។ ពិតប្រាកដណាស់ ទ្រង់មហាឮ មហាដឹង ។

وَإِن يُرِيدُوٓا۟ أَن يَخْدَعُوكَ فَإِنَّ حَسْبَكَ
ٱللَّهُ ۚ هُوَ ٱلَّذِىٓ أَيَّدَكَ بِنَصْرِهِۦ

៦២-ប្រសិនបើពួកគេ(ពួកចុះកិច្ចព្រមព្រៀង)មានបំណងប្រើល្បិចក្បត់អ្នក(មូហាំម៉ាត់) ពិតប្រាកដណាស់ អល់ឡោះគឺគ្រប់គ្រាន់ហើយសម្រាប់អ្នក ។ ទ្រង់គឺជាអ្នកដែលគាំទ្រអ្នកតាមរយៈ

وَبِٱلۡمُؤۡمِنِينَ ﴿٦٢﴾

ជំនួយរបស់ទ្រង់ និងបណ្តាអ្នកមានជំនឿ ។

وَأَلَّفَ بَيۡنَ قُلُوبِهِمۡۚ لَوۡ أَنفَقۡتَ مَا فِي
ٱلۡأَرۡضِ جَمِيعٗا مَّآ أَلَّفۡتَ بَيۡنَ قُلُوبِهِمۡ
وَلَٰكِنَّ ٱللَّهَ أَلَّفَ بَيۡنَهُمۡۚ إِنَّهُۥ عَزِيزٌ
حَكِيمٞ ﴿٦٣﴾

៦៣-ហើយទ្រង់បានបង្រួបបង្រួមឱ្យមានសាមគ្គីភាពរវាងដួងចិត្តរបស់ពួកគេ(អ្នកមានជំនឿ) ។ ប្រសិនបើអ្នកបានចំណាយទ្រព្យសម្បត្តិនៅលើផែនដីនេះទាំងអស់ ក៏អ្នកមិនអាចបង្រួបបង្រួមរវាងចិត្តរបស់ពួកគេបានដែរ ប៉ុន្តែអល់ឡោះអាចបង្រួបបង្រួមរវាងពួកគេ(ឱ្យមានជំនឿ)បាន ។ ពិតប្រាកដណាស់ ទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

يَٰٓأَيُّهَا ٱلنَّبِيُّ حَسۡبُكَ ٱللَّهُ وَمَنِ ٱتَّبَعَكَ مِنَ
ٱلۡمُؤۡمِنِينَ ﴿٦٤﴾

៦៤-ឱណាពី! អល់ឡោះគឺគ្រប់គ្រាន់ហើយសម្រាប់អ្នក និងអ្នកដែលបានប្រតិបត្តិតាមអ្នកក្នុងចំណោមអ្នកដែលមានជំនឿ ។

يَٰٓأَيُّهَا ٱلنَّبِيُّ حَرِّضِ ٱلۡمُؤۡمِنِينَ عَلَى
ٱلۡقِتَالِۚ إِن يَكُن مِّنكُمۡ عِشۡرُونَ صَٰبِرُونَ
يَغۡلِبُواْ مِاْئَتَيۡنِۚ وَإِن يَكُن مِّنكُم مِّاْئَةٞ
يَغۡلِبُوٓاْ أَلۡفٗا مِّنَ ٱلَّذِينَ كَفَرُواْ بِأَنَّهُمۡ قَوۡمٞ
لَّا يَفۡقَهُونَ ﴿٦٥﴾

៦៥-ឱណាពី! ចូរជំរុញបណ្តាអ្នកដែលមានជំនឿលើការប្រយុទ្ធ ។ បើក្នុងចំណោមពួកអ្នកមានគ្នាម្ភៃនាក់ដែលខំតស៊ូអត់ធ្មត់ គឺពួកអ្នកអាចឈ្នះ(ពួកខ្មាំង)ចំនួនពីររយនាក់ ។ បើក្នុងចំណោមពួកអ្នកមានចំនួនមួយរយនាក់ គឺពួកអ្នកអាចឈ្នះចំនួនមួយពាន់នាក់ពីពួកដែលប្រឆាំងដោយសារតែពួកគេជាក្រុមមួយដែលគ្មានការយល់ដឹង ។

ٱلۡـَٰٔنَ خَفَّفَ ٱللَّهُ عَنكُمۡ وَعَلِمَ أَنَّ فِيكُمۡ
ضَعۡفٗاۚ فَإِن يَكُن مِّنكُم مِّاْئَةٞ صَابِرَةٞ
يَغۡلِبُواْ مِاْئَتَيۡنِۚ وَإِن يَكُن مِّنكُمۡ أَلۡفٞ يَغۡلِبُوٓاْ
أَلۡفَيۡنِ بِإِذۡنِ ٱللَّهِۗ وَٱللَّهُ مَعَ ٱلصَّٰبِرِينَ ﴿٦٦﴾

៦៦-ពេលនេះអល់ឡោះបានសម្រាលចំពោះពួកអ្នក ព្រោះទ្រង់បានដឹងថា ពួកអ្នកមានភាពទន់ខ្សោយ ។ ហេតុនេះបើក្នុងចំណោមពួកអ្នកមានចំនួនមួយរយនាក់ដែលតស៊ូអត់ធ្មត់ គឺពួកអ្នកនឹងឈ្នះ(សត្រូវ)ចំនួនពីររយនាក់ ហើយបើក្នុងចំណោមពួកអ្នកមានមួយពាន់នាក់ គឺពួកអ្នកនឹងឈ្នះចំនួនពីរពាន់នាក់ដោយមានការអនុញ្ញាតពីអល់ឡោះ ។ ហើយអល់ឡោះពិតជានៅជាមួយពួកអ្នកដែលតស៊ូអត់ធ្មត់ ។

مَا كَانَ لِنَبِيٍّ أَن يَكُونَ لَهُۥٓ أَسۡرَىٰ حَتَّىٰ
يُثۡخِنَ فِي ٱلۡأَرۡضِۚ تُرِيدُونَ عَرَضَ
ٱلدُّنۡيَا وَٱللَّهُ يُرِيدُ ٱلۡأٓخِرَةَۗ وَٱللَّهُ عَزِيزٌ

៦៧-មិនគួរតែណាពីចំពោះណាពីទុកឈ្លើយសឹក(ដើម្បីទទួលយកការលោះនោះឡើយ) លុះត្រាតែគាត់សម្លាប់រង្គាល(ដើម្បីបំបាត់ពួកសត្រូវ)នៅលើផែនដីនេះសិន ។ ពួកអ្នក(អ្នកមានជំនឿ)ចង់បានសម្បត្តិលោកិយ(ដោយទទួលយកការលោះឈ្លើយសឹកពី

حَكِيمٌ ﴿٦٧﴾

ពួកសត្រូវ) តែអល់ឡោះចង់ផ្តល់ផលបុណ្យដល់ពួកអ្នកនាថ្ងៃបរលោក[1] ។ ហើយអល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

لَّوۡلَا كِتَٰبٞ مِّنَ ٱللَّهِ سَبَقَ لَمَسَّكُمۡ فِيمَآ أَخَذۡتُمۡ عَذَابٌ عَظِيمٞ ﴿٦٨﴾

៦៨-ប្រសិនបើគ្មានការកំណត់ពីអល់ឡោះ(អនុញ្ញាតឱ្យនូវជ័យភណ្ឌនិងទ្រព្យនៃការលោះឈ្លើយសឹក)ពីមុនមកទេនោះ ពួកអ្នកប្រាកដជាទទួលរងនូវទណ្ឌកម្មយ៉ាងធ្ងន់ធ្ងរបំផុតដោយសារតែពួកអ្នកបានទទួលយក(នូវការលោះចំណាប់ខ្មាំង)នោះ។

فَكُلُواْ مِمَّا غَنِمۡتُمۡ حَلَٰلٗا طَيِّبٗاۚ وَٱتَّقُواْ ٱللَّهَۚ إِنَّ ٱللَّهَ غَفُورٞ رَّحِيمٞ ﴿٦٩﴾

៦៩-ដូច្នេះ ចូរពួកអ្នកទទួលទានអំពីអ្វីដែលបានមកពីជ័យ-ភណ្ឌដែលហាឡាល់ស្អាតស្អំចុះ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

يَٰٓأَيُّهَا ٱلنَّبِيُّ قُل لِّمَن فِيٓ أَيۡدِيكُم مِّنَ ٱلۡأَسۡرَىٰٓ إِن يَعۡلَمِ ٱللَّهُ فِي قُلُوبِكُمۡ خَيۡرٗا يُؤۡتِكُمۡ خَيۡرٗا مِّمَّآ أُخِذَ مِنكُمۡ وَيَغۡفِرۡ لَكُمۡۚ وَٱللَّهُ غَفُورٞ رَّحِيمٞ ﴿٧٠﴾

៧០-ឱណាពី! ចូរអ្នកពោលទៅកាន់ពួកឈ្លើយសឹកដែលនៅក្នុងកណ្តាប់ដៃពួកអ្នកថា: ប្រសិនបើអល់ឡោះដឹងថា នៅក្នុងចិត្តរបស់ពួកអ្នកល្អមែននោះ ទ្រង់ច្បាស់ជានឹងផ្តល់ឱ្យពួកអ្នកនូវសេចក្តីល្អជាងអ្វី(ទ្រព្យលោះ)ដែលគេបានយកពីពួកអ្នក ហើយទ្រង់នឹងអភ័យទោសដល់ពួកអ្នកទៀតផង។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

وَإِن يُرِيدُواْ خِيَانَتَكَ فَقَدۡ خَانُواْ ٱللَّهَ مِن قَبۡلُ فَأَمۡكَنَ مِنۡهُمۡۗ وَٱللَّهُ عَلِيمٌ حَكِيمٌ ﴿٧١﴾

៧១-ប៉ុន្តែបើពួកគេមានបំណងក្បត់អ្នក(មូហាំម៉ាត់) ពួកគេពិតជាបានក្បត់អល់ឡោះពីមុនរួចមកហើយ ដូច្នេះទ្រង់បានជួយអ្នកឱ្យឈ្នះពួកគេ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

إِنَّ ٱلَّذِينَ ءَامَنُواْ وَهَاجَرُواْ وَجَٰهَدُواْ بِأَمۡوَٰلِهِمۡ وَأَنفُسِهِمۡ فِي سَبِيلِ ٱللَّهِ وَٱلَّذِينَ ءَاوَواْ وَّنَصَرُوٓاْ أُوْلَٰٓئِكَ بَعۡضُهُمۡ أَوۡلِيَآءُ بَعۡضٖۚ وَٱلَّذِينَ ءَامَنُواْ وَلَمۡ يُهَاجِرُواْ مَا لَكُم مِّن

៧២-ពិតប្រាកដណាស់ បណ្តាអ្នកមានជំនឿដែលបានចំណាកស្រុក ហើយបានតស៊ូទាំងទ្រព្យសម្បត្តិ និងជីវិតរបស់ពួកគេក្នុងមាគ៌ារបស់អល់ឡោះ ហើយបណ្តាអ្នក(អ្នកអាន់ស័រ)ដែលបានផ្តល់ជំរក ទ្រព្យសម្បត្តិ និងជំនួយផ្សេងៗដល់ពួកគេ(អ្នក មូហាជីរីន) អ្នកទាំងនោះគឺជាសម្ព័ន្ធមិត្តនឹងគ្នា។ រីឯបណ្តាអ្នកដែលមានជំនឿ

១-បន្ទូលនេះគេបានបញ្ចុះនៅសមរភូមិបាទើរដែលជាសមរភូមិដំបូង។ អល់ឡោះបានស្តីបន្ទោសពួកអ្នកមានជំនឿដែលទទួលយកទ្រព្យសម្បត្តិដោយការលោះឈ្លើយសឹកពីសំណាក់ខ្មាំងសត្រូវ ពីព្រោះគោលបំណងរបស់អល់ឡោះមិនទាន់អនុញ្ញាតឱ្យទទួលយកការលោះឈ្លើយសឹកពីសត្រូវទេក្នុងពេលសង្គ្រាមដំបូង ពោលគឺចង់ឱ្យសម្លាប់រង្គាលទៅលើពួកខ្មាំងជាមុនសិនដើម្បីកាច់បំបាក់ពួកគេ។

តែពួកគេមិនបានភៀសខ្លួនទេនោះ ពួកអ្នកមិនត្រូវទទួលបន្ទុកការពារពួកគេនូវប្រការណាមួយឡើយ លុះត្រាតែពួកគេភៀសខ្លួនដែរ។ ប្រសិនបើពួកគេសុំជំនួយពីពួកអ្នកនៅក្នុងកិច្ចការសាសនា(ដូចជាត្រូវពួកដែលគ្មានជំនឿបំពាន)នោះ ជាកាតព្វកិច្ចរបស់ពួកអ្នកត្រូវតែជួយ លើកលែងតែទៅលើក្រុមដែលមានកិច្ចព្រមព្រៀងរវាងពួកអ្នកនិងពួកគេ។ ហើយអល់ឡោះឃើញនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

៧៣-ហើយពួកដែលគ្មានជំនឿ ពួកគេជាសម្ព័ន្ធមិត្តនឹងគ្នា។ ប្រសិនបើពួកអ្នកមិនធ្វើតាមវា(បទបញ្ញារបស់អល់ឡោះ) ភាពវឹកវរ និងវិនាសកម្មយ៉ាងធំធេងពិតជានឹងកើតឡើងនៅលើផែនដីនេះជាមិនខាន។

៧៤-ហើយបណ្ដាអ្នកមានជំនឿដែលបានភៀសខ្លួន និងបានតស៊ូក្នុងមាគ៌ារបស់អល់ឡោះ និងបណ្ដាអ្នក(អ្នកអាន់ស័រ)ដែលបានផ្ដល់ជាទីជំរក ទ្រព្យសម្បត្តិ និងជំនួយផ្សេងៗដល់ពួកគេ(អ្នកមូហាជីរីន) អ្នកទាំងនោះគឺជាអ្នកដែលមានជំនឿយ៉ាងពិតប្រាកដ។ ពួកគេនឹងទទួលបានការអភ័យទោស និងលាភសក្ការៈដ៏ប្រពៃ(នៅក្នុងឋានសួគ៌)។

៧៥-ហើយបណ្ដាអ្នកដែលមានជំនឿបន្ទាប់ពីអ្នកទាំងនេះ(មូហាជីរីន និងអាន់ស័រ) ពួកគេបានភៀសខ្លួន និងបានចូលរួមតស៊ូជាមួយពួកអ្នក ដូច្នេះពួកទាំងនោះគឺស្ថិតក្នុងចំណោមពួកអ្នកដែរ។ ហើយសាច់សាលោហិតទាំងឡាយរបស់ពួកគេមានសិទ្ធិ(ទទួលមរតក)ទៅវិញទៅមក ស្របតាមក្រឹត្យច្បាប់របស់អល់ឡោះ។ ពិតប្រាកដណាស់អល់ឡោះដឹងនូវរាល់អ្វីៗទាំងអស់។

## ជំពូកអាត់តាវហ្ពះ

១-(នេះគឺជា)ការកាត់ផ្ដាច់ទំនាក់ទំនងរបស់អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ចំពោះពួកមូស្ហរីគីនដែលពួកអ្នក(អ្នកមានជំនឿ)បានចុះកិច្ចព្រមព្រៀងជាមួយពួកគេ។

២-ដូច្នេះហើយ ចូរពួកអ្នក(ពួកមូស្ហរីគីន)ធ្វើដំណើរនៅលើផែនដីចំនួនបួនខែ ហើយត្រូវដឹងថា ពិតប្រាកដណាស់ ពួកអ្នកមិន

وَلَـٰيَتِهِم مِّن شَىْءٍ حَتَّىٰ يُهَاجِرُوا۟ ۚ وَإِنِ
ٱسْتَنصَرُوكُمْ فِى ٱلدِّينِ فَعَلَيْكُمُ ٱلنَّصْرُ
إِلَّا عَلَىٰ قَوْمٍۭ بَيْنَكُمْ وَبَيْنَهُم مِّيثَـٰقٌ ۗ وَٱللَّهُ بِمَا
تَعْمَلُونَ بَصِيرٌ ﴿٧٢﴾

وَٱلَّذِينَ كَفَرُوا۟ بَعْضُهُمْ أَوْلِيَآءُ بَعْضٍ ۚ إِلَّا
تَفْعَلُوهُ تَكُن فِتْنَةٌ فِى ٱلْأَرْضِ وَفَسَادٌ
كَبِيرٌ ﴿٧٣﴾

وَٱلَّذِينَ ءَامَنُوا۟ وَهَاجَرُوا۟ وَجَـٰهَدُوا۟ فِى
سَبِيلِ ٱللَّهِ وَٱلَّذِينَ ءَاوَوا۟ وَّنَصَرُوٓا۟ أُو۟لَـٰٓئِكَ
هُمُ ٱلْمُؤْمِنُونَ حَقًّا ۚ لَّهُم مَّغْفِرَةٌ وَرِزْقٌ
كَرِيمٌ ﴿٧٤﴾

وَٱلَّذِينَ ءَامَنُوا۟ مِنۢ بَعْدُ وَهَاجَرُوا۟
وَجَـٰهَدُوا۟ مَعَكُمْ فَأُو۟لَـٰٓئِكَ مِنكُمْ ۚ وَأُو۟لُوا۟
ٱلْأَرْحَامِ بَعْضُهُمْ أَوْلَىٰ بِبَعْضٍ فِى كِتَـٰبِ ٱللَّهِ ۗ
إِنَّ ٱللَّهَ بِكُلِّ شَىْءٍ عَلِيمٌۢ ﴿٧٥﴾

## سورة التوبة

بَرَآءَةٌ مِّنَ ٱللَّهِ وَرَسُولِهِۦٓ إِلَى ٱلَّذِينَ عَـٰهَدتُّم
مِّنَ ٱلْمُشْرِكِينَ ﴿١﴾

فَسِيحُوا۟ فِى ٱلْأَرْضِ أَرْبَعَةَ أَشْهُرٍ وَٱعْلَمُوٓا۟

អាចគេចផុតពីទណ្ឌកម្មរបស់អល់ឡោះបានឡើយ។ ហើយពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកដែលធ្វើឱ្យពួកដែលគ្មានជំនឿអាម៉ាស់មុខ។

៣-ហើយនេះជាសេចក្តីប្រកាសពីអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ទៅកាន់មនុស្សលោកនាថ្ងៃបុណ្យហាជ្ជីដ៏ធំបំផុតថា: ពិតប្រាកដណាស់ អល់ឡោះនិងអ្នកនាំសាររបស់ទ្រង់មិនពាក់ព័ន្ធនឹងពួកមូស្ហ្រីគីនទៀតឡើយ។ ហើយប្រសិនបើពួកអ្នកសារភាពទោសកំហុសនោះ វាជាការប្រសើរបំផុតសម្រាប់ពួកអ្នក។ តែបើពួកអ្នកបានងាកចេញវិញនោះ ពួកអ្នកត្រូវដឹងថា ពួកអ្នកមិនអាចគេចផុតពីទណ្ឌកម្មរបស់អល់ឡោះបានឡើយ។ ចូរអ្នក(មូហាំម៉ាត់)ប្រាប់ពួកដែលបានប្រឆាំងនូវទារុណកម្មដ៏ឈឺចាប់ចុះ។

៤-លើកលែងតែពួកមូស្ហ្រីគីនដែលពួកអ្នកបានចុះកិច្ចព្រមព្រៀងជាមួយពួកគេ បន្ទាប់មកពួកគេមិនក្បត់នឹងពួកអ្នកនូវប្រការណាមួយ ហើយពួកគេមិនគាំទ្រអ្នកណាម្នាក់ដែលប្រឆាំងនឹងពួកអ្នកប៉ុណ្ណោះ។ ហេតុនេះ ចូរពួកអ្នកបំពេញកិច្ចសន្យាទាំងនេះជាមួយពួកគេរហូតដល់ពេលកំណត់របស់ពួកគេ។ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់អ្នកដែលកោតខ្លាចទ្រង់។

៥-កាលណាខែពិសិដ្ឋបានកន្លងផុតទៅ ចូរពួកអ្នកសម្លាប់ពួកមូស្ហ្រិគីនចុះ ទោះបីជាពួកអ្នកបានជួបពួកគេនៅទីណាក៏ដោយ ហើយចូរចាប់ពួកគេ និងឡោមព័ទ្ធពួកគេ ហើយពួកអ្នកត្រូវឃ្លាំមើលពួកគេគ្រប់ទីកន្លែង។ តែប្រសិនបើពួកគេបានសារភាពកំហុស ហើយប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់នោះ ចូរពួកអ្នកដោះលែងពួកគេចុះ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

៦-ប្រសិនបើនរណាម្នាក់ក្នុងចំណោមពួកមូស្ហ្រីគីនបានសុំឱ្យអ្នកជួយការពារគេ ចូរអ្នកការពារគេចុះ ដើម្បីឱ្យគេស្តាប់ពាក្យសំដីរបស់អល់ឡោះ(គម្ពីរគួរអាន) បន្ទាប់មកចូរអ្នកបញ្ជូនគេទៅកន្លែងដែលមានសុវត្ថិភាព។ ការធ្វើដូច្នេះ គឺដោយសារតែពួកគេ

أَنَّكُمْ غَيْرُ مُعْجِزِي ٱللَّهِ ۙ وَأَنَّ ٱللَّهَ مُخْزِي
ٱلْكَٰفِرِينَ ﴿٢﴾

وَأَذَٰنٌ مِّنَ ٱللَّهِ وَرَسُولِهِۦٓ إِلَى ٱلنَّاسِ يَوْمَ
ٱلْحَجِّ ٱلْأَكْبَرِ أَنَّ ٱللَّهَ بَرِيٓءٌ مِّنَ ٱلْمُشْرِكِينَ ۙ
وَرَسُولُهُۥ ۚ فَإِن تُبْتُمْ فَهُوَ خَيْرٌ لَّكُمْ ۖ وَإِن
تَوَلَّيْتُمْ فَٱعْلَمُوٓا۟ أَنَّكُمْ غَيْرُ مُعْجِزِي ٱللَّهِ ۗ
وَبَشِّرِ ٱلَّذِينَ كَفَرُوا۟ بِعَذَابٍ أَلِيمٍ ﴿٣﴾

إِلَّا ٱلَّذِينَ عَٰهَدتُّم مِّنَ ٱلْمُشْرِكِينَ ثُمَّ لَمْ
يَنقُصُوكُمْ شَيْـًٔا وَلَمْ يُظَٰهِرُوا۟ عَلَيْكُمْ أَحَدًا
فَأَتِمُّوٓا۟ إِلَيْهِمْ عَهْدَهُمْ إِلَىٰ مُدَّتِهِمْ ۚ إِنَّ ٱللَّهَ
يُحِبُّ ٱلْمُتَّقِينَ ﴿٤﴾

فَإِذَا ٱنسَلَخَ ٱلْأَشْهُرُ ٱلْحُرُمُ فَٱقْتُلُوا۟ ٱلْمُشْرِكِينَ
حَيْثُ وَجَدتُّمُوهُمْ وَخُذُوهُمْ وَٱحْصُرُوهُمْ
وَٱقْعُدُوا۟ لَهُمْ كُلَّ مَرْصَدٍ ۚ فَإِن تَابُوا۟
وَأَقَامُوا۟ ٱلصَّلَوٰةَ وَءَاتَوُا۟ ٱلزَّكَوٰةَ
فَخَلُّوا۟ سَبِيلَهُمْ ۚ إِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ ﴿٥﴾

وَإِنْ أَحَدٌ مِّنَ ٱلْمُشْرِكِينَ ٱسْتَجَارَكَ
فَأَجِرْهُ حَتَّىٰ يَسْمَعَ كَلَٰمَ ٱللَّهِ ثُمَّ أَبْلِغْهُ
مَأْمَنَهُۥ ۚ ذَٰلِكَ بِأَنَّهُمْ قَوْمٌ لَّا يَعْلَمُونَ ﴿٦﴾

ជាក្រុមដែលមិនដឹង( អំពីសាសនាអ៊ីស្លាម) ។

كَيۡفَ يَكُونُ لِلۡمُشۡرِكِينَ عَهۡدٌ عِندَ ٱللَّهِ
وَعِندَ رَسُولِهِۦٓ إِلَّا ٱلَّذِينَ عَٰهَدتُّمۡ عِندَ
ٱلۡمَسۡجِدِ ٱلۡحَرَامِۖ فَمَا ٱسۡتَقَٰمُواْ لَكُمۡ
فَٱسۡتَقِيمُواْ لَهُمۡۚ إِنَّ ٱللَّهَ يُحِبُّ
ٱلۡمُتَّقِينَ ٧

៧-តើពួកមូស្ហរីគីនអាចមានកិច្ចព្រមព្រៀងជាមួយអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ក្រៅពីពួកដែលបានចុះកិច្ចព្រមព្រៀងជាមួយពួកអ្នកនៅឯម៉ាស្ជិទីលហារ៉ាមបានយ៉ាងដូចម្ដេច? ហេតុនេះ បើពួកគេនៅតែគោរពកិច្ចសន្យាចំពោះពួកអ្នក គឺពួកអ្នកត្រូវតែគោរពកិច្ចសន្យាចំពោះពួកគេវិញ ។ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្ដាអ្នកដែលកោតខ្លាចទ្រង់ ។

كَيۡفَ وَإِن يَظۡهَرُواْ عَلَيۡكُمۡ لَا يَرۡقُبُواْ
فِيكُمۡ إِلّٗا وَلَا ذِمَّةٗۚ يُرۡضُونَكُم بِأَفۡوَٰهِهِمۡ
وَتَأۡبَىٰ قُلُوبُهُمۡ وَأَكۡثَرُهُمۡ فَٰسِقُونَ ٨

៨-ហើយប្រសិនបើពួកគេមានប្រៀបលើពួកអ្នក( នៅក្នុងសមរភូមិ) នោះ ពួកគេមិនគោរពពួកអ្នកដែលជាសាច់សាលោហិត និងមិនគោរពកិច្ចព្រមព្រៀងនោះទេ តើ( ពួកមូស្ហរីគីនអាចមានកិច្ចព្រមព្រៀង) យ៉ាងដូចម្ដេច? ។ ពួកគេយល់ព្រមជាមួយពួកអ្នកតែមាត់របស់ពួកគេប៉ុណ្ណោះ តែចិត្តរបស់ពួកគេបដិសេធ ហើយពួកគេភាគច្រើនជាពួកដែលក្បត់កិច្ចសន្យា ។

ٱشۡتَرَوۡاْ بِـَٔايَٰتِ ٱللَّهِ ثَمَنٗا قَلِيلٗا فَصَدُّواْ عَن
سَبِيلِهِۦٓۚ إِنَّهُمۡ سَآءَ مَا كَانُواْ يَعۡمَلُونَ ٩

៩-ពួកគេបានប្ដូរអាយ៉ាត់ៗរបស់អល់ឡោះដោយសម្បត្តិលោកិយដ៏តិចតួច រួចពួកគេបានរារាំងអ្នកដទៃពីមាគ៌ារបស់ទ្រង់ ។ ពិតប្រាកដណាស់ អ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តគឺអាក្រក់បំផុត ។

لَا يَرۡقُبُونَ فِي مُؤۡمِنٍ إِلّٗا وَلَا ذِمَّةٗۚ وَأُوْلَٰٓئِكَ
هُمُ ٱلۡمُعۡتَدُونَ ١٠

១០-ពួកគេ( ពួកមូស្ហរីគីន) មិនគោរពអ្នកមានជំនឿដែលជាសាច់សាលោហិត និងមិនគោរពកិច្ចព្រមព្រៀងឡើយ ។ ហើយពួកទាំងនោះជាពួកដែលបំពាន ។

فَإِن تَابُواْ وَأَقَامُواْ ٱلصَّلَوٰةَ وَءَاتَوُاْ ٱلزَّكَوٰةَ
فَإِخۡوَٰنُكُمۡ فِي ٱلدِّينِۗ وَنُفَصِّلُ ٱلۡأٓيَٰتِ لِقَوۡمٖ
يَعۡلَمُونَ ١١

១១-ប្រសិនបើពួកគេសារភាពកំហុស( មានជំនឿ) និងប្រតិបត្តិសឡាត ហើយនិងបរិច្ចាគហ្សាកាត់នោះគឺពួកគេជាបងប្អូនរួមសាសនារបស់ពួកអ្នក ។ ហើយយើង( អល់ឡោះ) នឹងបកស្រាយបំភ្លឺអាយ៉ាត់ៗសម្រាប់ក្រុមដែលយល់ដឹង ។

وَإِن نَّكَثُوٓاْ أَيۡمَٰنَهُم مِّنۢ بَعۡدِ عَهۡدِهِمۡ
وَطَعَنُواْ فِي دِينِكُمۡ فَقَٰتِلُوٓاْ أَئِمَّةَ ٱلۡكُفۡرِ
إِنَّهُمۡ لَآ أَيۡمَٰنَ لَهُمۡ لَعَلَّهُمۡ يَنتَهُونَ ١٢

១២-ប៉ុន្តែប្រសិនបើពួកគេបានរំលាយពាក្យសម្បថរបស់ពួកគេបន្ទាប់ពីមានកិច្ចព្រមព្រៀងរបស់ពួកគេ ហើយពួកគេបានវាយប្រហារលើសាសនារបស់ពួកអ្នកនោះ ចូរពួកអ្នកប្រយុទ្ធនឹងមេដឹកនាំរបស់ពួកប្រឆាំងទាំងអស់ ។ ពិតប្រាកដណាស់ សម្រាប់ពួកគេគឺ

គ្មានកិច្ចព្រមព្រៀងឡើយ ។ ( ការធ្វើដូច្នេះ) សង្ឃឹមថាពួកគេនឹងបញ្ឈប់( ការវាយប្រហារ) ។

أَلَا تُقَٰتِلُونَ قَوۡمٗا نَّكَثُوٓاْ أَيۡمَٰنَهُمۡ وَهَمُّواْ
بِإِخۡرَاجِ ٱلرَّسُولِ وَهُم بَدَءُوكُمۡ أَوَّلَ
مَرَّةٍۚ أَتَخۡشَوۡنَهُمۡۚ فَٱللَّهُ أَحَقُّ أَن تَخۡشَوۡهُ إِن
كُنتُم مُّؤۡمِنِينَ ١٣

១៣-ហេតុអ្វីបានជាពួកអ្នកមិនប្រយុទ្ធជាមួយក្រុមដែលបានរំលាយកិច្ចព្រមព្រៀង និងប៉ុនប៉ងនិរទេសអ្នកនាំសារ( មូហាំម៉ាត់) ចេញ( ពីទីក្រុងម៉ាក្កះ) ដោយពួកគេបានផ្តើម( ប្រយុទ្ធ) ជាមួយពួកអ្នកដំបូងបង្អស់នោះ? តើពួកអ្នកខ្លាចពួកគេឬ? ដូច្នេះ អល់ឡោះទេដែលពួកអ្នកត្រូវកោតខ្លាច ប្រសិនបើពួកអ្នកជាអ្នកដែលមានជំនឿមែននោះ ។

قَٰتِلُوهُمۡ يُعَذِّبۡهُمُ ٱللَّهُ بِأَيۡدِيكُمۡ وَيُخۡزِهِمۡ
وَيَنصُرۡكُمۡ عَلَيۡهِمۡ وَيَشۡفِ صُدُورَ قَوۡمٖ
مُّؤۡمِنِينَ ١٤

១៤-ចូរពួកអ្នកប្រយុទ្ធជាមួយពួកគេចុះ អល់ឡោះនឹងធ្វើទារុណកម្មពួកគេដោយថ្វីដៃរបស់ពួកអ្នក ហើយទ្រង់នឹងធ្វើឱ្យពួកគេអាម៉ាស់ និងជួយពួកអ្នកឱ្យមានជ័យជំនះលើពួកគេ ព្រមទាំងធ្វើឱ្យរំសាយកង្វល់ពីក្នុងចិត្តរបស់ក្រុមដែលមានជំនឿ ។

وَيُذۡهِبۡ غَيۡظَ قُلُوبِهِمۡۗ وَيَتُوبُ ٱللَّهُ عَلَىٰ مَن
يَشَآءُۗ وَٱللَّهُ عَلِيمٌ حَكِيمٌ ١٥

១៥-ហើយទ្រង់នឹងលុបបំបាត់កំហឹងពីក្នុងចិត្តរបស់ពួកគេ ហើយអល់ឡោះនឹងទទួលយកការសារភាពទោសកំហុសចំពោះអ្នកណាដែលទ្រង់មានចេតនា ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

أَمۡ حَسِبۡتُمۡ أَن تُتۡرَكُواْ وَلَمَّا يَعۡلَمِ ٱللَّهُ ٱلَّذِينَ
جَٰهَدُواْ مِنكُمۡ وَلَمۡ يَتَّخِذُواْ مِن دُونِ ٱللَّهِ
وَلَا رَسُولِهِۦ وَلَا ٱلۡمُؤۡمِنِينَ وَلِيجَةٗۚ وَٱللَّهُ
خَبِيرُۢ بِمَا تَعۡمَلُونَ ١٦

១៦-ឬមួយក៏ពួកអ្នក( អ្នកមានជំនឿ) នឹកស្មានថា ពួកអ្នកត្រូវគេបោះបង់ចោល នៅពេលដែលអល់ឡោះមិនទាន់បានសាកល្បងពួកដែលបានតស៊ូប្រយុទ្ធក្នុងចំណោមពួកអ្នក ហើយពួកគេមិនយកអ្នកផ្សេងពីអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ព្រមទាំងបណ្តាអ្នកមានជំនឿធ្វើជាអ្នកគាំពារឬ? ហើយអល់ឡោះមហាដឹងនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

مَا كَانَ لِلۡمُشۡرِكِينَ أَن يَعۡمُرُواْ مَسَٰجِدَ ٱللَّهِ
شَٰهِدِينَ عَلَىٰٓ أَنفُسِهِم بِٱلۡكُفۡرِۚ أُوْلَٰٓئِكَ
حَبِطَتۡ أَعۡمَٰلُهُمۡ وَفِي ٱلنَّارِ
هُمۡ خَٰلِدُونَ ١٧

១៧-មិនមែនជាភារកិច្ចរបស់ពួកមូស្ហរីគីនទេក្នុងការកសាង ឬថែទាំវិហាររបស់អល់ឡោះ ដោយពួកគេបានធ្វើជាសាក្សីខ្លួនឯងថា: ពួកគេជាអ្នកគ្មានជំនឿនោះ ។ ពួកទាំងនោះ ទង្វើរបស់ពួកគេមិនបានផលឡើយ ហើយពួកគេជាពួកដែលស្ថិតនៅក្នុងឋាននរកជាអមតៈ ។

إِنَّمَا يَعْمُرُ مَسَٰجِدَ ٱللَّهِ مَنْ ءَامَنَ بِٱللَّهِ وَٱلْيَوْمِ ٱلْـَٔاخِرِ وَأَقَامَ ٱلصَّلَوٰةَ وَءَاتَى ٱلزَّكَوٰةَ وَلَمْ يَخْشَ إِلَّا ٱللَّهَ ۖ فَعَسَىٰٓ أُو۟لَٰٓئِكَ أَن يَكُونُوا۟ مِنَ ٱلْمُهْتَدِينَ ﴿١٨﴾

១៨-ការពិតអ្នកដែលកសាង ឬថែទាំវិហាររបស់អល់ឡោះនោះ គឺមានតែអ្នកដែលមានជំនឿលើអល់ឡោះ និងថ្ងៃបរលោក និងប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ ហើយគេមិនកោតខ្លាចអ្នកណាក្រៅពីអល់ឡោះប៉ុណ្ណោះ ។ ហើយសង្ឃឹមថា អ្នកទាំងនោះនឹងស្ថិតក្នុងចំណោមអ្នកដែលទទួលបានការចង្អុលបង្ហាញ ។

۞ أَجَعَلْتُمْ سِقَايَةَ ٱلْحَآجِّ وَعِمَارَةَ ٱلْمَسْجِدِ ٱلْحَرَامِ كَمَنْ ءَامَنَ بِٱللَّهِ وَٱلْيَوْمِ ٱلْـَٔاخِرِ وَجَٰهَدَ فِى سَبِيلِ ٱللَّهِ ۚ لَا يَسْتَوُۥنَ عِندَ ٱللَّهِ ۗ وَٱللَّهُ لَا يَهْدِى ٱلْقَوْمَ ٱلظَّٰلِمِينَ ﴿١٩﴾

១៩-តើពួកអ្នកចាត់ទុកការផ្តល់ផ្គង់ទឹកដល់ពួកអ្នកធ្វើហាជ្ជី និងថែទាំម៉ាស្ជិទិលហារ៉ម(នៅម៉ាក្កះ) ស្មើនឹងអ្នកដែលមានជំនឿលើអល់ឡោះ និងថ្ងៃបរលោក ព្រមទាំងបានតស៊ូប្រយុទ្ធក្នុងមាគ៌ារបស់អល់ឡោះឬ? ពួកគេទាំងនោះមានភាពមិនស្មើគ្នាឡើយនៅចំពោះមុខអល់ឡោះ ។ ហើយអល់ឡោះមិនចង្អុលបង្ហាញក្រុមដែលបំពានឡើយ ។

ٱلَّذِينَ ءَامَنُوا۟ وَهَاجَرُوا۟ وَجَٰهَدُوا۟ فِى سَبِيلِ ٱللَّهِ بِأَمْوَٰلِهِمْ وَأَنفُسِهِمْ أَعْظَمُ دَرَجَةً عِندَ ٱللَّهِ ۚ وَأُو۟لَٰٓئِكَ هُمُ ٱلْفَآئِزُونَ ﴿٢٠﴾

២០-បណ្តាអ្នកដែលមានជំនឿ ហើយបានភៀសខ្លួន(ចេញពីទឹកដីគ្មានជំនឿ) និងបានតស៊ូប្រយុទ្ធក្នុងមាគ៌ារបស់អល់ឡោះដោយទ្រព្យសម្បត្តិរបស់ពួកគេ និងជីវិតរបស់ពួកគេផ្ទាល់នោះ គឺមានឋានៈខ្ពង់ខ្ពស់បំផុតនៅជាមួយអល់ឡោះ ។ ហើយអ្នកទាំងនោះជាអ្នកជោគជ័យ ។

يُبَشِّرُهُمْ رَبُّهُم بِرَحْمَةٍ مِّنْهُ وَرِضْوَٰنٍ وَجَنَّٰتٍ لَّهُمْ فِيهَا نَعِيمٌ مُّقِيمٌ ﴿٢١﴾

២១-ម្ចាស់របស់ពួកគេបានផ្តល់ដំណឹងរីករាយដល់ពួកគេដោយក្តីមេត្តាករុណា និងក្តីសោមនស្សរីករាយ ហើយផ្តល់ឋានសួគ៌ដែលមានសេចក្តីរីករាយជានិរន្តរ៍នៅក្នុងនោះ ។

خَٰلِدِينَ فِيهَآ أَبَدًا ۚ إِنَّ ٱللَّهَ عِندَهُۥٓ أَجْرٌ عَظِيمٌ ﴿٢٢﴾

២២-ដោយពួកគេស្ថិតក្នុងឋានសួគ៌នោះជាអមតៈ ។ ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកដែលមានផលបុណ្យដ៏ធំធេង(សម្រាប់អ្នកមានជំនឿ) ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ لَا تَتَّخِذُوٓا۟ ءَابَآءَكُمْ وَإِخْوَٰنَكُمْ أَوْلِيَآءَ إِنِ ٱسْتَحَبُّوا۟ ٱلْكُفْرَ عَلَى ٱلْإِيمَٰنِ ۚ وَمَن يَتَوَلَّهُم مِّنكُمْ فَأُو۟لَٰٓئِكَ هُمُ ٱلظَّٰلِمُونَ ﴿٢٣﴾

២៣-ឱបណ្តាអ្នកដែលមានជំនឿ ចូរពួកអ្នកកុំយកជីដូនជីតា និងបងប្អូនរបស់ពួកអ្នកធ្វើជាអ្នកគាំពារឱ្យសោះ ដរាបណាពួកគេពេញចិត្តនឹងការគ្មានជំនឿជាងការមានជំនឿនោះ ។ អ្នកណាហើយក្នុងចំណោមពួកអ្នកយកពួកគេធ្វើជាអ្នកគាំពារនោះ ពួកទាំងនោះគឺជាពួកដែលបំពាន ។

២៤-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ប្រសិនបើឪពុកម្តាយ កូនចៅ បងប្អូន ប្រពន្ធ សាច់សាលោហិតរបស់ពួកអ្នក និងទ្រព្យសម្បត្តិដែលពួកអ្នករកបាន និងជំនួញដែលពួកអ្នកខ្លាចខាតបង់ ហើយនិងលំនៅដ្ឋានដែលពួកអ្នកពេញចិត្តវា ពួកអ្នកស្រឡាញ់ជាងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ និងការតស៊ូក្នុងមាគ៌ារបស់ទ្រង់នោះ ចូរពួកអ្នករង់ចាំចុះ រហូតទាល់តែអល់ឡោះនាំមកនូវការសម្រេច(ទណ្ឌកម្ម)របស់ទ្រង់។ អល់ឡោះមិនចង្អុលបង្ហាញក្រុមដែលប្រព្រឹត្តល្មើសឡើយ។

២៥-អល់ឡោះពិតជាបានជួយពួកអ្នកឱ្យបានជោគជ័យនៅក្នុងសមរភូមិជាច្រើនកន្លែង។ ហើយនៅសមរភូមិហ៊ូណៃន ពេលដែលកងទ័ពជាច្រើនរបស់ពួកអ្នកធ្វើឱ្យពួកអ្នកមានមោទនភាពនោះ គឺគ្មានប្រយោជន៍អ្វីដល់ពួកអ្នកឡើយ។ ហើយដីដែលមានភាពទូលំទូលាយនោះបែរជាចង្អៀតចំពោះពួកអ្នក បន្ទាប់មកពួកអ្នករត់ត្រឡប់ក្រោយ(ដោយបរាជ័យ)ទៅវិញ។

២៦-ក្រោយមកអល់ឡោះ បានបញ្ចុះភាពនឹងនររបស់ទ្រង់ទៅលើអ្នកនាំសាររបស់ទ្រង់ និងពួកដែលមានជំនឿ(ឱ្យមានស្មារតីប្រយុទ្ធឡើងវិញ)។ ហើយទ្រង់បានបញ្ចុះកងទ័ព(ម៉ាឡា-អ៊ីកាត់មកជួយពួកអ្នក) ដែលពួកអ្នកមិនបានឃើញគេ ហើយទ្រង់ក៏បានដាក់ទារុណកម្មទៅលើពួកដែលបានប្រឆាំង។ នោះហើយគឺជាការតបស្នងចំពោះពួកដែលប្រឆាំង។

២៧-បន្ទាប់មកអល់ឡោះទទួលយកការសារភាពក្រោយពី(ទារុណកម្ម)នោះ ចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

២៨-ឱបណ្តាអ្នកដែលមានជំនឿ ការពិតពួកមូស្ហ្គីគីន គឺគ្មានភាពជ្រះស្អាតទេ(ណាជីស)។ ហេតុនេះ ចូរកុំឱ្យពួកគេទៅជិតម៉ាស្ជិទអាល់ហារ៉ាមបន្ទាប់ពីឆ្នាំនេះ(ឆ្នាំទីប្រាំបួនហិជរ៉ោះ)។ ប្រសិនបើពួកអ្នកបារម្ភខ្លាចក្រ អល់ឡោះនឹងឱ្យពួកអ្នកមានបានវិញដោយក្តីសប្បុរសរបស់ទ្រង់ប្រសិនបើទ្រង់មានចេតនា។ ពិតប្រាកដណាស់

قُلۡ إِن كَانَ ءَابَآؤُكُمۡ وَأَبۡنَآؤُكُمۡ وَإِخۡوَٰنُكُمۡ
وَأَزۡوَٰجُكُمۡ وَعَشِيرَتُكُمۡ وَأَمۡوَٰلٌ ٱقۡتَرَفۡتُمُوهَا
وَتِجَٰرَةٌ تَخۡشَوۡنَ كَسَادَهَا وَمَسَٰكِنُ تَرۡضَوۡنَهَآ
أَحَبَّ إِلَيۡكُم مِّنَ ٱللَّهِ وَرَسُولِهِۦ وَجِهَادٖ
فِي سَبِيلِهِۦ فَتَرَبَّصُواْ حَتَّىٰ يَأۡتِيَ ٱللَّهُ بِأَمۡرِهِۦۗ
وَٱللَّهُ لَا يَهۡدِي ٱلۡقَوۡمَ ٱلۡفَٰسِقِينَ ٢٤
لَقَدۡ نَصَرَكُمُ ٱللَّهُ فِي مَوَاطِنَ كَثِيرَةٖ
وَيَوۡمَ حُنَيۡنٍ إِذۡ أَعۡجَبَتۡكُمۡ كَثۡرَتُكُمۡ
فَلَمۡ تُغۡنِ عَنكُمۡ شَيۡـٔٗا وَضَاقَتۡ عَلَيۡكُمُ
ٱلۡأَرۡضُ بِمَا رَحُبَتۡ ثُمَّ وَلَّيۡتُم
مُّدۡبِرِينَ ٢٥
ثُمَّ أَنزَلَ ٱللَّهُ سَكِينَتَهُۥ عَلَىٰ رَسُولِهِۦ وَعَلَى
ٱلۡمُؤۡمِنِينَ وَأَنزَلَ جُنُودٗا لَّمۡ تَرَوۡهَا
وَعَذَّبَ ٱلَّذِينَ كَفَرُواْۚ وَذَٰلِكَ جَزَآءُ
ٱلۡكَٰفِرِينَ ٢٦
ثُمَّ يَتُوبُ ٱللَّهُ مِنۢ بَعۡدِ ذَٰلِكَ عَلَىٰ مَن يَشَآءُۗ
وَٱللَّهُ غَفُورٞ رَّحِيمٞ ٢٧
يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِنَّمَا ٱلۡمُشۡرِكُونَ
نَجَسٞ فَلَا يَقۡرَبُواْ ٱلۡمَسۡجِدَ ٱلۡحَرَامَ بَعۡدَ
عَامِهِمۡ هَٰذَاۚ وَإِنۡ خِفۡتُمۡ عَيۡلَةٗ فَسَوۡفَ

អល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

២៩-ចូរពួកអ្នកប្រយុទ្ធជាមួយនឹងពួកដែលគ្មានជំនឿលើអល់ឡោះ និងគ្មានជំនឿនឹងថ្ងៃបរលោក ហើយមិនហាមឃាត់នូវអ្វីដែលអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់បានហាមឃាត់ និងមិនកាន់តាមសាសនាដែលត្រឹមត្រូវ(សាសនាអ៊ីស្លាម)ក្នុងចំណោមពួកដែលគេបានផ្តល់គម្ពីរឱ្យចុះ លុះត្រាតែពួកគេព្រមបង់ពន្ធដោយផ្ទាល់ដៃ(ពេញចិត្ត) ប្រកបដោយការចុះញ៉ម ។

៣០-ពួកយ៉ាហ៊ូទីបានអះអាងថាៈ អ៊ូហ្សៃរ៍ជាបុត្ររបស់អល់ឡោះ ចំណែកឯពួកណាសរ៉នីវិញក៏បានអះអាងថា ម៉ាស៊ីហ៊ុ(អ៊ីសា)ជាបុត្ររបស់អល់ឡោះដែរ ។ នោះគ្រាន់តែជាពាក្យសម្ដីអះអាងចេញពីមាត់របស់ពួកគេ ដោយពួកគេនិយាយដូចពាក្យសម្ដីរបស់ពួកដែលគ្មានជំនឿជំនាន់មុនៗប៉ុណ្ណោះ ។ អល់ឡោះបានបំផ្លាញពួកគេ ។ តើពួកគេអាចគេចចេញពីការពិតបានយ៉ាងដូចម្ដេច?

៣១-ពួកគេ(យ៉ាហ៊ូទី និងណាសរ៉នី) បានយកអ្នកចេះដឹងរបស់ពួកគេ និងបុព្វជិតរបស់ពួកគេ ហើយនឹងម៉ាសៀហកូនរបស់ម៉ារយ៉ាំធ្វើជាម្ចាស់ក្រៅពីអល់ឡោះ ។ ហើយពួកគេមិនត្រូវបានគេបញ្ជាឱ្យគោរពសក្ការៈអ្នកផ្សេងក្រៅពីម្ចាស់(អល់ឡោះ)តែមួយឡើយ ។ គ្មានម្ចាស់ណាដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីអល់ឡោះឡើយ ។ ទ្រង់មហាស្អាតស្អំអំពីអ្វីដែលពួកគេកំពុងធ្វើស្ហ៊ីរិកនោះ ។

៣២-ពួកគេ(ពួកគ្មានជំនឿ)មានបំណងពន្លត់ពន្លឺ(សាសនា) របស់អល់ឡោះតាមរយៈមាត់របស់ពួកគេប៉ុណ្ណោះ តែអល់ឡោះមិនអនុញ្ញាតឡើយ ផ្ទុយទៅវិញទ្រង់នឹងបំពេញពន្លឺរបស់ទ្រង់ថែមទៀត ទោះបីពួកដែលប្រឆាំងមិនពេញចិត្តក៏ដោយ ។

៣៣-ទ្រង់ជាអ្នកដែលបានបញ្ជូនអ្នកនាំសាររបស់ទ្រង់(មូហាំ-ម៉ាត់) ដោយនាំមកជាមួយនូវការចង្អុលបង្ហាញ(គម្ពីរគួរអាន) និងសាសនាដ៏ពិត ដើម្បីធ្វើឱ្យវាមានប្រៀបលើសាសនាដ៏ទៃទៀត ទោះ

يُغْنِيكُمُ ٱللَّهُ مِن فَضْلِهِۦٓ إِن شَآءَ ۚ إِنَّ ٱللَّهَ
عَلِيمٌ حَكِيمٌ ﴿٢٨﴾

قَٰتِلُوا۟ ٱلَّذِينَ لَا يُؤْمِنُونَ بِٱللَّهِ وَلَا
بِٱلْيَوْمِ ٱلْءَاخِرِ وَلَا يُحَرِّمُونَ مَا حَرَّمَ ٱللَّهُ
وَرَسُولُهُۥ وَلَا يَدِينُونَ دِينَ ٱلْحَقِّ مِنَ
ٱلَّذِينَ أُوتُوا۟ ٱلْكِتَٰبَ حَتَّىٰ يُعْطُوا۟
ٱلْجِزْيَةَ عَن يَدٍ وَهُمْ صَٰغِرُونَ ﴿٢٩﴾

وَقَالَتِ ٱلْيَهُودُ عُزَيْرٌ ٱبْنُ ٱللَّهِ وَقَالَتِ
ٱلنَّصَٰرَى ٱلْمَسِيحُ ٱبْنُ ٱللَّهِ ۖ ذَٰلِكَ
قَوْلُهُم بِأَفْوَٰهِهِمْ ۖ يُضَٰهِـُٔونَ قَوْلَ ٱلَّذِينَ
كَفَرُوا۟ مِن قَبْلُ ۚ قَٰتَلَهُمُ ٱللَّهُ ۚ
أَنَّىٰ يُؤْفَكُونَ ﴿٣٠﴾

ٱتَّخَذُوٓا۟ أَحْبَارَهُمْ وَرُهْبَٰنَهُمْ أَرْبَابًا مِّن
دُونِ ٱللَّهِ وَٱلْمَسِيحَ ٱبْنَ مَرْيَمَ وَمَآ
أُمِرُوٓا۟ إِلَّا لِيَعْبُدُوٓا۟ إِلَٰهًا وَٰحِدًا ۖ لَّآ إِلَٰهَ إِلَّا
هُوَ ۚ سُبْحَٰنَهُۥ عَمَّا يُشْرِكُونَ ﴿٣١﴾

يُرِيدُونَ أَن يُطْفِـُٔوا۟ نُورَ ٱللَّهِ بِأَفْوَٰهِهِمْ
وَيَأْبَى ٱللَّهُ إِلَّآ أَن يُتِمَّ نُورَهُۥ وَلَوْ كَرِهَ
ٱلْكَٰفِرُونَ ﴿٣٢﴾

هُوَ ٱلَّذِىٓ أَرْسَلَ رَسُولَهُۥ بِٱلْهُدَىٰ وَدِينِ
ٱلْحَقِّ لِيُظْهِرَهُۥ عَلَى ٱلدِّينِ كُلِّهِۦ وَلَوْ

كَرِهَ ٱلۡمُشۡرِكُونَ ٣٣

បីពួកមូស្ហរីគីនមិនពេញចិត្តក៏ដោយ ។

۞ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِنَّ كَثِيرٗا مِّنَ
ٱلۡأَحۡبَارِ وَٱلرُّهۡبَانِ لَيَأۡكُلُونَ أَمۡوَٰلَ ٱلنَّاسِ
بِٱلۡبَٰطِلِ وَيَصُدُّونَ عَن سَبِيلِ ٱللَّهِۗ
وَٱلَّذِينَ يَكۡنِزُونَ ٱلذَّهَبَ وَٱلۡفِضَّةَ وَلَا
يُنفِقُونَهَا فِي سَبِيلِ ٱللَّهِ فَبَشِّرۡهُم بِعَذَابٍ
أَلِيمٖ ٣٤

៣៤-ឱបណ្តាអ្នកដែលមានជំនឿ ពិតប្រាកដណាស់ ភាគច្រើននៃអ្នកចេះដឹង និងបុព្វជិត(របស់ពួកយ៉ាហ៊ូទី និងណាសរ៉នី) ពួកគេស៊ីទ្រព្យសម្បត្តិមនុស្សលោកដោយខុសច្បាប់ ហើយពួកគេរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ ។ ចំណែកពួកដែលប្រមូលមាសប្រាក់ ហើយមិនព្រមបរិច្ចាគវាក្នុងមាគ៌ារបស់អល់ឡោះនោះ ចូរអ្នក(មូហាំម៉ាត់) ប្រាប់ពួកគេនូវទារុណកម្មដ៏ឈឺចាប់ចុះ ។

يَوۡمَ يُحۡمَىٰ عَلَيۡهَا فِي نَارِ جَهَنَّمَ فَتُكۡوَىٰ بِهَا
جِبَاهُهُمۡ وَجُنُوبُهُمۡ وَظُهُورُهُمۡۖ هَٰذَا مَا
كَنَزۡتُمۡ لِأَنفُسِكُمۡ فَذُوقُواْ مَا كُنتُمۡ
تَكۡنِزُونَ ٣٥

៣៥-នាថ្ងៃ(បរលោក)ដែលគេនឹងដុតវា(មាសប្រាក់)ក្នុងនរកជើហាន់ណាំ រួចគេយកវាទៅដុតថ្ងាសរបស់ពួកគេ និងចំហៀងខ្លួនរបស់ពួកគេ ហើយនិងខ្នងរបស់ពួកគេ(ព្រមទាំងគេនិយាយទៅកាន់ពួកនោះថា) នេះហើយជាអ្វីដែលពួកអ្នកបានប្រមូលទុកសម្រាប់ខ្លួនពួកអ្នកនោះ ។ ដូច្នេះចូរពួកអ្នកភ្លក្សនូវអ្វីដែលពួកអ្នកបានប្រមូលទុកចុះ ។

إِنَّ عِدَّةَ ٱلشُّهُورِ عِندَ ٱللَّهِ ٱثۡنَا عَشَرَ شَهۡرٗا فِي
كِتَٰبِ ٱللَّهِ يَوۡمَ خَلَقَ ٱلسَّمَٰوَٰتِ
وَٱلۡأَرۡضَ مِنۡهَآ أَرۡبَعَةٌ حُرُمٞۚ ذَٰلِكَ ٱلدِّينُ
ٱلۡقَيِّمُۚ فَلَا تَظۡلِمُواْ فِيهِنَّ أَنفُسَكُمۡۚ وَقَٰتِلُواْ
ٱلۡمُشۡرِكِينَ كَآفَّةٗ كَمَا يُقَٰتِلُونَكُمۡ
كَآفَّةٗۚ وَٱعۡلَمُوٓاْ أَنَّ ٱللَّهَ مَعَ ٱلۡمُتَّقِينَ ٣٦

៣៦-ពិតប្រាកដណាស់ ចំនួនខែរបស់អល់ឡោះមានដប់ពីរខែ និងបានចារនៅក្នុងគម្ពីររបស់អល់ឡោះ(ឡាវហុលម៉ះហ្វ៊ូស) តាំងពីថ្ងៃដែលទ្រង់បានបង្កើតមេឃជាច្រើនជាន់ និងផែនដីមកម្ល៉េះ ។ ក្នុងនោះគឺមានបួនខែដែលត្រូវបានគេហាមឃាត់(មិនឱ្យធ្វើសង្គ្រាម) ។ នោះហើយគឺជាសាសនាដ៏ត្រឹមត្រូវ ។ ហេតុនេះ ចូរពួកអ្នកកុំបំពានខ្លួនឯងនៅក្នុងខែបម្រាមទាំងនេះ ។ ហើយចូរពួកអ្នកប្រយុទ្ធជាមួយពួកមូស្ហរីគីនទាំងឡាយ ដូចដែលពួកគេបានប្រយុទ្ធជាមួយពួកអ្នករាល់គ្នាដែរ ។ ហើយពួកអ្នកត្រូវដឹងថាៈ ពិតប្រាកដណាស់ អល់ឡោះនៅជាមួយ(ជួយ)បណ្តាអ្នកដែលកោតខ្លាចទ្រង់ ។

إِنَّمَا ٱلنَّسِيٓءُ زِيَادَةٞ فِي ٱلۡكُفۡرِۖ يُضَلُّ بِهِ
ٱلَّذِينَ كَفَرُواْ يُحِلُّونَهُۥ عَامٗا وَيُحَرِّمُونَهُۥ

៣៧-តាមការពិតការពន្យារ(លើកខែ)បែបនេះគឺជាការបង្កើនភាពគ្មានជំនឿ[1] ។ ដោយសារការពន្យារនេះ ពួកដែលគ្មានជំនឿត្រូវគេ(ស្ហៃតន)ធ្វើឱ្យវង្វេងដោយពួកគេអនុញ្ញាតឱ្យប្រយុទ្ធក្នុង(ខែ

១-ពួកមូស្ហរីគីនលើកខែដែលអល់ឡោះបានហាមឃាត់ពីការប្រយុទ្ធទៅខែផ្សេង ក្នុងគោលបំណងចង់ធ្វើសង្គ្រាមនៅក្នុងខែនោះ ។

عَامًا لِّيُوَاطِـُٔواْ عِدَّةَ مَا حَرَّمَ ٱللَّهُ فَيُحِلُّواْ مَا
حَرَّمَ ٱللَّهُۚ زُيِّنَ لَهُمۡ سُوٓءُ أَعۡمَٰلِهِمۡۗ وَٱللَّهُ
لَا يَهۡدِي ٱلۡقَوۡمَ ٱلۡكَٰفِرِينَ ٣٧

ទាំងបួន) មួយឆ្នាំ ហើយពួកគេបានហាមឃាត់មួយឆ្នាំ ដើម្បីឱ្យស្របនឹងចំនួន(បួនខែ) ដែលអល់ឡោះបានហាមឃាត់ និងពួកគេអនុញ្ញាតនូវអ្វីដែលអល់ឡោះបានហាមឃាត់(នៅក្នុងខែទាំងនេះ) ខណៈដែលគេ(ស្ហៃតន) បានតុបតែងលំអសម្រាប់ពួកគេនូវអំពើអាក្រក់នានារបស់ពួកគេ។ ហើយអល់ឡោះមិនចង្អុលបង្ហាញដល់ក្រុមដែលគ្មានជំនឿឡើយ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ مَا لَكُمۡ إِذَا قِيلَ
لَكُمُ ٱنفِرُواْ فِي سَبِيلِ ٱللَّهِ ٱثَّاقَلۡتُمۡ إِلَى
ٱلۡأَرۡضِۚ أَرَضِيتُم بِٱلۡحَيَوٰةِ ٱلدُّنۡيَا مِنَ
ٱلۡأٓخِرَةِۚ فَمَا مَتَٰعُ ٱلۡحَيَوٰةِ ٱلدُّنۡيَا فِي
ٱلۡأٓخِرَةِ إِلَّا قَلِيلٌ ٣٨

៣៨-ឱបណ្ដាអ្នកមានជំនឿ! យ៉ាងដូចម្ដេចបានជាពួកអ្នកនៅពេលដែលមានគេបញ្ជាពួកអ្នកថាៈ ចូរពួកអ្នកចេញទៅ(ប្រយុទ្ធ) ក្នុងមាគ៌ារបស់អល់ឡោះ ពួកអ្នកបែរជាខ្ជិលច្រអូសក្រាញនឹងដី(លំនៅដ្ឋាន) ទៅវិញ? តើពួកអ្នកពេញចិត្តនឹងការរស់នៅក្នុងលោកិយជាងបរលោកឬ? ប៉ុន្តែសុភមង្គលនៃការរស់នៅក្នុងលោកិយមិនអាចប្រៀបទៅនឹងថ្ងៃបរលោកបានឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ។

إِلَّا تَنفِرُواْ يُعَذِّبۡكُمۡ عَذَابًا أَلِيمٗا
وَيَسۡتَبۡدِلۡ قَوۡمًا غَيۡرَكُمۡ وَلَا تَضُرُّوهُ شَيۡـٔٗاۗ
وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ قَدِيرٌ ٣٩

៣៩-ប្រសិនបើពួកអ្នកមិនព្រមចេញទៅប្រយុទ្ធទេនោះ ទ្រង់ប្រាកដជានឹងធ្វើទារុណកម្មពួកអ្នកនូវទារុណកម្មដ៏ឈឺចាប់ ហើយទ្រង់នឹងផ្លាស់ប្ដូរក្រុមមួយផ្សេងពីពួកអ្នក ហើយ(បើពួកអ្នកគេចចេញពីការប្រយុទ្ធនោះ) ពួកអ្នកក៏មិនអាចបង្កគ្រោះថ្នាក់អ្វីដល់ទ្រង់ដែរ។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់។

إِلَّا تَنصُرُوهُ فَقَدۡ نَصَرَهُ ٱللَّهُ إِذۡ أَخۡرَجَهُ ٱلَّذِينَ
كَفَرُواْ ثَانِيَ ٱثۡنَيۡنِ إِذۡ هُمَا فِي ٱلۡغَارِ إِذۡ
يَقُولُ لِصَٰحِبِهِۦ لَا تَحۡزَنۡ إِنَّ ٱللَّهَ مَعَنَاۖ
فَأَنزَلَ ٱللَّهُ سَكِينَتَهُۥ عَلَيۡهِ وَأَيَّدَهُۥ بِجُنُودٖ
لَّمۡ تَرَوۡهَا وَجَعَلَ كَلِمَةَ ٱلَّذِينَ كَفَرُواْ
ٱلسُّفۡلَىٰۗ وَكَلِمَةُ ٱللَّهِ هِيَ ٱلۡعُلۡيَاۗ وَٱللَّهُ
عَزِيزٌ حَكِيمٌ ٤٠

៤០-ប្រសិនបើពួកអ្នកមិនជួយគេ(មូហាំម៉ាត់) ទេ អល់ឡោះពិតជាបានជួយដល់គេនៅពេលពួកដែលប្រឆាំង(ពួកគូរ៉ស្ហទីក្រុងម៉ាក្កះ) បានបណ្ដេញគេទាំងពីរ(មូហាំម៉ាត់ និងអាពូហ្ពាកើរ) ខណៈដែលគេទាំងពីរស្ថិតក្នុងរូងភ្នំ(ភ្នំសួរ) ដោយគេ(មូហាំម៉ាត់) បានពោលទៅកាន់មិត្តរបស់គេ(អាពូហ្ពាកើរ) ថាៈ ចូរអ្នកកុំព្រួយ! ពិតប្រាកដណាស់អល់ឡោះនៅជាមួយពួកយើង។ ពេលនោះអល់ឡោះក៏បានបញ្ចុះភាពនឹងនររបស់ទ្រង់ដល់គេ ហើយជួយពង្រឹងគេដោយមានកងទ័ព(ម៉ាឡាអ៊ីកាត់) ជាច្រើនដែលពួកអ្នកមើលមិនឃើញពួកគេ។ ទ្រង់បានចាត់ទុកពាក្យសំដី(ពាក្យស្ហ៊ីរិក) របស់ពួកដែលប្រឆាំងយ៉ាងទាបបំផុត។ រីឯបន្ទូលរបស់អល់ឡោះ វិញខ្ពង់ខ្ពស់បំផុត។ ហើយអល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

៤១-ចូរពួកអ្នកចេញទៅប្រយុទ្ធទាំងសភាពស្រាល (យុវវ័យធូរធារ) ឬសភាពធ្ងន់(វ័យចំណាស់ក្រលំបាក) ហើយចូរពួកអ្នកតស៊ូលះបង់ទាំងទ្រព្យសម្បត្តិ និងខ្លួនប្រាណរបស់ពួកអ្នកក្នុងមាគ៌ារបស់អល់ឡោះ។ នោះជាការប្រសើរបំផុតសម្រាប់ពួកអ្នក ប្រសិនបើពួកអ្នកបានដឹង។

ٱنفِرُواْ خِفَافًا وَثِقَالًا وَجَٰهِدُواْ بِأَمۡوَٰلِكُمۡ وَأَنفُسِكُمۡ فِي سَبِيلِ ٱللَّهِۚ ذَٰلِكُمۡ خَيۡرٞ لَّكُمۡ إِن كُنتُمۡ تَعۡلَمُونَ ٤١

៤២-ប្រសិនបើជ័យភណ្ឌនៅជិត ហើយការធ្វើដំណើរមានភាពងាយស្រួលនោះ(នៅជិត) ប្រាកដជាពួកគេតាមអ្នក ក៏ប៉ុន្តែ(សមរភូមិនោះ)នៅឆ្ងាយ ព្រមទាំងលំបាកសម្រាប់ពួកគេ។ ហើយពួកគេនឹងស្បថចំពោះអល់ឡោះថាៈ ប្រសិនបើពួកយើងមានលទ្ធភាព ពួកយើងពិតជាចេញទៅជាមួយពួកអ្នក។ ពួកគេកំពុងតែបំផ្លាញខ្លួនឯង (ដោយភាពពុតត្បុត) ហើយអល់ឡោះដឹងថា ពិតប្រាកដណាស់ ពួកគេជាពួកដែលភូតកុហក។

لَوۡ كَانَ عَرَضٗا قَرِيبٗا وَسَفَرٗا قَاصِدٗا لَّٱتَّبَعُوكَ وَلَٰكِنۢ بَعُدَتۡ عَلَيۡهِمُ ٱلشُّقَّةُۚ وَسَيَحۡلِفُونَ بِٱللَّهِ لَوِ ٱسۡتَطَعۡنَا لَخَرَجۡنَا مَعَكُمۡ يُهۡلِكُونَ أَنفُسَهُمۡ وَٱللَّهُ يَعۡلَمُ إِنَّهُمۡ لَكَٰذِبُونَ ٤٢

៤៣-សង្ឃឹមថាអល់ឡោះអភ័យទោសឱ្យអ្នក(មូហាំម៉ាត់) ហេតុអ្វីបានជាអ្នកអនុញ្ញាតឱ្យពួកគេ(ពួកអវត្តមានពីសង្គ្រាម)? លុះត្រាតែអ្នកដឹងច្បាស់អំពីបណ្ដាអ្នកដែលស្មោះត្រង់ និងដឹងអំពីពួកដែលភូតកុហកសិន។

عَفَا ٱللَّهُ عَنكَ لِمَ أَذِنتَ لَهُمۡ حَتَّىٰ يَتَبَيَّنَ لَكَ ٱلَّذِينَ صَدَقُواْ وَتَعۡلَمَ ٱلۡكَٰذِبِينَ ٤٣

៤៤-បណ្ដាអ្នកដែលមានជំនឿលើអល់ឡោះ និងថ្ងៃបរលោក មិនសុំអនុញ្ញាតពីអ្នក(មូហាំម៉ាត់)ក្នុងការដកខ្លួនពីការប្រយុទ្ធទាំងទ្រព្យសម្បត្តិ និងជីវិតរបស់ពួកគេឡើយ។ ហើយអល់ឡោះមហាដឹងចំពោះបណ្ដាអ្នកដែលកោតខ្លាចទ្រង់។

لَا يَسۡتَـٔۡذِنُكَ ٱلَّذِينَ يُؤۡمِنُونَ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِ أَن يُجَٰهِدُواْ بِأَمۡوَٰلِهِمۡ وَأَنفُسِهِمۡۗ وَٱللَّهُ عَلِيمُۢ بِٱلۡمُتَّقِينَ ٤٤

៤៥-ពិតប្រាកដណាស់ មានតែពួកដែលគ្មានជំនឿលើអល់ឡោះ ហើយនឹងថ្ងៃបរលោកទេដែលសុំអនុញ្ញាតពីអ្នក(ដើម្បីដកខ្លួនពីការធ្វើសង្គ្រាម) ហើយចិត្តរបស់ពួកគេមានការសង្ស័យ(ចំពោះសាសនាអ៊ីស្លាម)នោះ។ ដូច្នេះ ពួកគេស្ទាក់ស្ទើរនៅក្នុងការសង្ស័យរបស់ពួកគេ។

إِنَّمَا يَسۡتَـٔۡذِنُكَ ٱلَّذِينَ لَا يُؤۡمِنُونَ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِ وَٱرۡتَابَتۡ قُلُوبُهُمۡ فَهُمۡ فِي رَيۡبِهِمۡ يَتَرَدَّدُونَ ٤٥

៤៦-ហើយបើពួកគេមានបំណងចេញ(ទៅប្រយុទ្ធរួមជាមួយពួកអ្នក)មែននោះ ប្រាកដជាពួកគេរៀបចំវា(ការចេញទៅធ្វើសង្គ្រាម)នូវសំភារៈសឹក ក៏ប៉ុន្តែអល់ឡោះមិនពេញចិត្តចំពោះការ

۞وَلَوۡ أَرَادُواْ ٱلۡخُرُوجَ لَأَعَدُّواْ لَهُۥ عُدَّةٗ وَلَٰكِن كَرِهَ ٱللَّهُ ٱنۢبِعَاثَهُمۡ فَثَبَّطَهُمۡ وَقِيلَ

ٱقۡعُدُواْ مَعَ ٱلۡقَٰعِدِينَ ٤٦

ចាកចេញរបស់ពួកគេឡើយ ។ ដូច្នេះទ្រង់បានធ្វើឱ្យពួកគេខ្ជិលច្រអូស ហើយមានគេនិយាយថា: ចូរពួកអ្នកអង្គុយនៅជាមួយបណ្ដាអ្នកដែលអង្គុយ(នៅផ្ទះ)ចុះ!

لَوۡ خَرَجُواْ فِيكُم مَّا زَادُوكُمۡ إِلَّا خَبَالٗا
وَلَأَوۡضَعُواْ خِلَٰلَكُمۡ يَبۡغُونَكُمُ ٱلۡفِتۡنَةَ
وَفِيكُمۡ سَمَّٰعُونَ لَهُمۡۗ وَٱللَّهُ عَلِيمُۢ
بِٱلظَّٰلِمِينَ ٤٧

៤៧-ប្រសិនបើពួកគេបានចេញទៅជាមួយពួកអ្នក(ដើម្បីធ្វើសង្គ្រាម) ពួកគេមិនអាចផ្ដល់ប្រយោជន៍អ្វីដល់ពួកអ្នកឡើយ មានតែការបង្កគ្រោះថ្នាក់ និងញុះញង់ក្នុងចំណោមពួកអ្នក ដោយពួកគេចង់ឱ្យមានភាពវឹកវរដល់ពួកអ្នក ។ ហើយនៅក្នុងចំណោមពួកអ្នកថែមទាំងមានអ្នកស្ដាប់យកការណ៍ឱ្យពួកគេទៀតផង ។ ហើយអល់ឡោះមហាដឹងចំពោះពួកដែលបំពាន ។

لَقَدِ ٱبۡتَغَوُاْ ٱلۡفِتۡنَةَ مِن قَبۡلُ وَقَلَّبُواْ لَكَ
ٱلۡأُمُورَ حَتَّىٰ جَآءَ ٱلۡحَقُّ وَظَهَرَ أَمۡرُ ٱللَّهِ وَهُمۡ
كَٰرِهُونَ ٤٨

៤៨-ពិតប្រាកដណាស់ ពួកគេមានផែនការបង្កភាពចលាចលតាំងពីមុនមកម្ល៉េះ(មុនសង្គ្រាមនៅតាប៊ូក) ហើយពួកគេបានធ្វើការផ្លាស់ប្ដូរសភាពការណ៍ទាំងឡាយចំពោះអ្នក(មូហាំម៉ាត់) រហូតទាល់តែការពិត(ជំនួយ)បានមកដល់ និងសាសនារបស់អល់ឡោះបានជោគជ័យ តែពួកគេមិនពេញចិត្តឡើយ ។

وَمِنۡهُم مَّن يَقُولُ ٱئۡذَن لِّي وَلَا تَفۡتِنِّيٓۚ أَلَا فِي
ٱلۡفِتۡنَةِ سَقَطُواْۗ وَإِنَّ جَهَنَّمَ لَمُحِيطَةُۢ
بِٱلۡكَٰفِرِينَ ٤٩

៤៩-ហើយក្នុងចំណោមពួកគេមានអ្នកខ្លះនិយាយថា: សូមអនុញ្ញាតឱ្យខ្ញុំ(មិនទៅធ្វើសង្គ្រាម)ផង ហើយកុំឱ្យខ្ញុំប្រឈមមុខនឹងគ្រោះថ្នាក់អ្វី ។ តាមពិតពួកគេបានធ្លាក់ក្នុងភាពគ្រោះថ្នាក់(ដោយអំពើពុតត្បុត)ទៅហើយ ។ ហើយពិតប្រាកដណាស់ នរកជើហាន់ណាំនឹងហ៊ុមព័ទ្ធពួកដែលប្រឆាំង ។

إِن تُصِبۡكَ حَسَنَةٞ تَسُؤۡهُمۡۖ وَإِن تُصِبۡكَ
مُصِيبَةٞ يَقُولُواْ قَدۡ أَخَذۡنَآ أَمۡرَنَا مِن قَبۡلُ
وَيَتَوَلَّواْ وَّهُمۡ فَرِحُونَ ٥٠

៥០-ប្រសិនបើសំណាងល្អធ្លាក់មកលើអ្នក(មូហាំម៉ាត់)វាធ្វើឱ្យពួកគេ(ពួកពុតត្បុត)ឈឺចាប់ ។ តែបើសំណាងអាក្រក់ធ្លាក់មកលើអ្នកវិញ ពួកគេនឹងនិយាយថា: ពិតណាស់ ពួកយើងបានដឹងរឿងនេះមុន(ទើបពួកយើងដកខ្លួនចេញពីមូហាំម៉ាត់) ហើយពួកគេបែរចេញទៅដោយពួកគេសប្បាយរីករាយ ។

قُل لَّن يُصِيبَنَآ إِلَّا مَا كَتَبَ ٱللَّهُ لَنَا
هُوَ مَوۡلَىٰنَاۚ وَعَلَى ٱللَّهِ فَلۡيَتَوَكَّلِ
ٱلۡمُؤۡمِنُونَ ٥١

៥១-ចូរអ្នក(មូហាំម៉ាត់)ពោលថា: វាមិនអាចធ្លាក់មកលើពួកយើងឡើយ លើកលែងតែអ្វីដែលអល់ឡោះបានចារកំណត់សម្រាប់ពួកយើងប៉ុណ្ណោះ ព្រោះទ្រង់ជាអ្នកគាំពារពួកយើង ។ ហើយចំពោះអល់ឡោះតែមួយគត់ដែលបណ្ដាអ្នកមានជំនឿត្រូវ

ប្រគល់ការទុកចិត្ត ។

៥២-ចូរអ្នក(មូហាំម៉ាត់)ពោលថា: តើពួកអ្នករង់ចាំយើងក្រៅពីផលមួយនៃផលល្អទាំងពីរ(ស្លាប់ស្ហាហ៊ីទ ឬជ័យជំនះ)នេះឬ? ហើយពួកយើងចាំមើលពួកអ្នកថា អល់ឡោះនឹងធ្វើឱ្យពួកអ្នកឈឺចាប់ដោយទណ្ឌកម្មពីទ្រង់ផ្ទាល់ ឬដោយដៃផ្ទាល់របស់ពួកយើង។ ដូច្នេះចូរពួកអ្នករង់ចាំចុះ ពិតប្រាកដណាស់ ពួកយើងក៏រង់ចាំជាមួយពួកអ្នកដែរ ។

៥៣-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ទោះបីពួកអ្នកបានបរិច្ចាគដោយពេញចិត្ត ឬមិនពេញចិត្តក៏ដោយ ក៏គេ(អល់ឡោះ)មិនទទួលយកពីពួកអ្នកដែរ ។ ពិតប្រាកដណាស់ ពួកអ្នកជាពួកដែលល្មើសនឹងបទបញ្ជារបស់អល់ឡោះ ។

៥៤-ហើយគ្មានអ្វីរារាំងពួកគេមិនឱ្យគេទទួលយកការបរិច្ចាគរបស់ពួកគេក្រៅពីការប្រឆាំងរបស់ពួកគេចំពោះអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់)នោះឡើយ ។ ហើយពួកគេមិនមកសឡាតឡើយ លើកលែងតែពួកគេមកដោយខ្ជិលច្រអូសប៉ុណ្ណោះ ។ ហើយពួកគេក៏មិនបរិច្ចាគដែរ លើកលែងតែពួកគេបរិច្ចាគដោយមិនពេញចិត្តប៉ុណ្ណោះ ។

៥៥-ដូច្នេះ ចូរកុំបណ្តោយឱ្យទ្រព្យសម្បត្តិរបស់ពួកគេនិងកូនចៅរបស់ពួកគេធ្វើឱ្យអ្នក(មូហាំម៉ាត់)ភ្ញាក់ផ្អើលឱ្យសោះ ។ តាមពិតអល់ឡោះចង់ដាក់ទណ្ឌកម្មពួកគេក្នុងការរស់នៅលើលោកិយជាមួយប្រការទាំងនេះ និងដើម្បីឱ្យព្រលឹងរបស់ពួកគេចេញទៅ(ស្លាប់)ខណៈដែលពួកគេជាពួកគ្មានជំនឿ ។

៥៦-ពួកគេស្បថនឹងអល់ឡោះថា: ពិតប្រាកដណាស់ ពួកគេពិតជាមកពីក្រុមពួកអ្នក(អ្នកមានជំនឿ)ដែរ ខណៈដែលពួកគេមិនមែនជាក្រុមពួកអ្នកទេនោះ ។ ក៏ប៉ុន្តែពួកគេជាក្រុមដែលខ្លាច ។

៥៧-ប្រសិនបើពួកគេមានកន្លែងការពារខ្លួន ឬមានរូងភ្នំ ឬមានរូងដី ពួកគេពិតជាទៅរកទីនោះដោយប្រញាប់ប្រញាល់ជាមិនខាន ។

قُلْ هَلْ تَرَبَّصُونَ بِنَآ إِلَّآ إِحْدَى
ٱلْحُسْنَيَيْنِ ۖ وَنَحْنُ نَتَرَبَّصُ بِكُمْ أَن يُصِيبَكُمُ
ٱللَّهُ بِعَذَابٍ مِّنْ عِندِهِۦٓ أَوْ بِأَيْدِينَا ۖ
فَتَرَبَّصُوٓا۟ إِنَّا مَعَكُم مُّتَرَبِّصُونَ ﴿٥٢﴾

قُلْ أَنفِقُوا۟ طَوْعًا أَوْ كَرْهًا لَّن يُتَقَبَّلَ مِنكُمْ ۖ
إِنَّكُمْ كُنتُمْ قَوْمًا فَٰسِقِينَ ﴿٥٣﴾

وَمَا مَنَعَهُمْ أَن تُقْبَلَ مِنْهُمْ نَفَقَٰتُهُمْ إِلَّآ
أَنَّهُمْ كَفَرُوا۟ بِٱللَّهِ وَبِرَسُولِهِۦ وَلَا يَأْتُونَ
ٱلصَّلَوٰةَ إِلَّا وَهُمْ كُسَالَىٰ وَلَا يُنفِقُونَ إِلَّا
وَهُمْ كَٰرِهُونَ ﴿٥٤﴾

فَلَا تُعْجِبْكَ أَمْوَٰلُهُمْ وَلَآ أَوْلَٰدُهُمْ ۚ إِنَّمَا
يُرِيدُ ٱللَّهُ لِيُعَذِّبَهُم بِهَا فِى ٱلْحَيَوٰةِ ٱلدُّنْيَا
وَتَزْهَقَ أَنفُسُهُمْ وَهُمْ كَٰفِرُونَ ﴿٥٥﴾

وَيَحْلِفُونَ بِٱللَّهِ إِنَّهُمْ لَمِنكُمْ وَمَا هُم
مِّنكُمْ وَلَٰكِنَّهُمْ قَوْمٌ يَفْرَقُونَ ﴿٥٦﴾

لَوْ يَجِدُونَ مَلْجَـًٔا أَوْ مَغَٰرَٰتٍ أَوْ مُدَّخَلًا
لَّوَلَّوْا۟ إِلَيْهِ وَهُمْ يَجْمَحُونَ ﴿٥٧﴾

٥٨-ហើយក្នុងចំណោមពួកគេ មានអ្នកចោទប្រកាន់អ្នក(មូហាំម៉ាត់)ក្នុង(រឿងបែងចែក)ការបរិច្ចាគ។ បើពួកគេត្រូវបានគេចែកឱ្យមួយផ្នែកពីវា ពួកគេសប្បាយរីករាយ តែបើពួកគេមិនត្រូវបានគេចែកឱ្យអំពីវាវិញនោះ ស្រាប់តែពួកគេខឹង។

٥٩- ហើយប្រសិនបើពួកនេះរីករាយនឹងអ្វីដែលអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់បានបែងចែកឱ្យពួកគេ ហើយពួកគេបាននិយាយថាៈ អល់ឡោះតែមួយគត់គ្រប់គ្រាន់ហើយសម្រាប់ពួកយើង ទ្រង់នឹងបន្ថែមឱ្យពួកយើងនូវសេចក្តីប្រោសប្រណីរបស់ទ្រង់ ហើយអ្នកនាំសាររបស់ទ្រង់ក៏ដូចគ្នាដែរ ។ពិតប្រាកដណាស់ ពួកយើងជាអ្នកសង្ឃឹមចំពោះអល់ឡោះតែមួយគត់(នោះច្បាស់ជាល្អប្រសើរសម្រាប់ពួកគេ)។

٦០-តាមពិត ការបរិច្ចាគហ្សាកាត់នោះ គឺសម្រាប់តែបណ្តាអ្នកក្រខ្សត់ និងបណ្តាអ្នកក្រ និងបណ្តាអ្នកប្រមូលហ្សាកាត់ និងបណ្តាអ្នកដែលត្រូវលួងលោមចិត្ត[1] និងបណ្តាអ្នកចង់រំដោះខ្លួនពីទាសករគេ និងបណ្តាអ្នកជំពាក់បំណុលគេ និងបណ្តាអ្នកដែលតស៊ូក្នុងមាគ៌ាអល់ឡោះ និងបណ្តាអ្នកដែលធ្វើដំណើរដាច់ស្បៀងប៉ុណ្ណោះ។(ទាំងនេះគឺជា)កាតព្វកិច្ចពីអល់ឡោះ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

٦១-ហើយក្នុងចំណោមពួកគេ(ពួកពុតត្បុត)មានពួកដែលធ្វើបាបណាពី(មូហាំម៉ាត់) ហើយពួកគេនិយាយថាៈ គាត់ជាអ្នកស្តាប់និងជឿអ្វីៗគ្រប់បែបយ៉ាង។ ចូរអ្នក(មូហាំម៉ាត់)តបវិញថាៈ (ពិតប្រាកដណាស់) គេស្តាប់តែអ្វីដែលល្អសម្រាប់ពួកអ្នក ហើយគេជឿលើអល់ឡោះ និងទុកចិត្តលើបណ្តាអ្នកមានជំនឿ ហើយនិងអាណិតស្រឡាញ់បណ្តាអ្នកដែលមានជំនឿក្នុងចំណោមពួកអ្នកប៉ុណ្ណោះ។ ហើយពួកដែលធ្វើបាបអ្នកនាំសាររបស់អល់ឡោះ ពួកគេនឹងទទួលទារុណកម្មយ៉ាងឈឺចាប់។

وَمِنۡهُم مَّن يَلۡمِزُكَ فِي ٱلصَّدَقَٰتِ فَإِنۡ أُعۡطُواْ مِنۡهَا رَضُواْ وَإِن لَّمۡ يُعۡطَوۡاْ مِنۡهَآ إِذَا هُمۡ يَسۡخَطُونَ ٥٨

وَلَوۡ أَنَّهُمۡ رَضُواْ مَآ ءَاتَىٰهُمُ ٱللَّهُ وَرَسُولُهُۥ وَقَالُواْ حَسۡبُنَا ٱللَّهُ سَيُؤۡتِينَا ٱللَّهُ مِن فَضۡلِهِۦ وَرَسُولُهُۥٓ إِنَّآ إِلَى ٱللَّهِ رَٰغِبُونَ ٥٩

۞ إِنَّمَا ٱلصَّدَقَٰتُ لِلۡفُقَرَآءِ وَٱلۡمَسَٰكِينِ وَٱلۡعَٰمِلِينَ عَلَيۡهَا وَٱلۡمُؤَلَّفَةِ قُلُوبُهُمۡ وَفِي ٱلرِّقَابِ وَٱلۡغَٰرِمِينَ وَفِي سَبِيلِ ٱللَّهِ وَٱبۡنِ ٱلسَّبِيلِۖ فَرِيضَةٗ مِّنَ ٱللَّهِۗ وَٱللَّهُ عَلِيمٌ حَكِيمٞ ٦٠

وَمِنۡهُمُ ٱلَّذِينَ يُؤۡذُونَ ٱلنَّبِيَّ وَيَقُولُونَ هُوَ أُذُنٞۚ قُلۡ أُذُنُ خَيۡرٖ لَّكُمۡ يُؤۡمِنُ بِٱللَّهِ وَيُؤۡمِنُ لِلۡمُؤۡمِنِينَ وَرَحۡمَةٞ لِّلَّذِينَ ءَامَنُواْ مِنكُمۡۚ وَٱلَّذِينَ يُؤۡذُونَ رَسُولَ ٱللَّهِ لَهُمۡ عَذَابٌ أَلِيمٞ ٦١

១-អ្នកដែលទើបតែចូលសាសនាអ៊ីស្លាម អ្នកដែលសង្ឃឹមថានឹងចូលសាសនាអ៊ីស្លាម អ្នកដែលការពារនឹងផ្តល់ផលប្រយោជន៍ដល់អ្នកកាន់សាសនាអ៊ីស្លាម។

៦២-ពួកគេស្បថនឹងអល់ឡោះនៅចំពោះមុខពួកអ្នក(អ្នកមានជំនឿ) ដើម្បីផ្គាប់ចិត្តពួកអ្នកប៉ុណ្ណោះ ។ តែអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ទេដែលសក្តិសមបំផុតសម្រាប់ពួកគេផ្គាប់ចិត្ត បើពួកគេពិតជាពួកមានជំនឿមែននោះ ។

៦៣-តើពួកគេមិនដឹងទេឬថា ពិតប្រាកដណាស់ អ្នកណាហើយដែលប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ពិតប្រាកដណាស់ សម្រាប់គេគឺនរកជើហាន់ណាំ ដោយគេស្ថិតនៅក្នុងនោះជាអមតៈនោះ? ទាំងនោះគឺជាការអាម៉ាស់ដ៏ធំបំផុត ។

៦៤-ពួកពុតត្បុតព្រួយបារម្ភខ្លាចជំពូកណាមួយត្រូវគេបញ្ចុះមកលើពួកគេ ដើម្បីលាតត្រដាងអំពីអ្វីដែលមាននៅក្នុងចិត្តរបស់ពួកគេ ។ ចូរអ្នក(មូហាំម៉ាត់)តបវិញថាៈ ចូរពួកអ្នកសើចចំអកចុះ! ពិតប្រាកដណាស់ អល់ឡោះជាអ្នកលាតត្រដាងនូវអ្វីដែលពួកអ្នកកំពុងព្រួយបារម្ភនោះ ។

៦៥-ហើយប្រសិនបើអ្នក(មូហាំម៉ាត់)សួរពួកគេ ពួកគេច្បាស់ជាឆ្លើយថាៈ តាមពិតពួកយើងគ្រាន់តែចំអកនិងលេងសើចប៉ុណ្ណោះ ។ ចូរអ្នកពោលថាៈ តើពួកអ្នកនៅចំអកមើលងាយចំពោះអល់ឡោះ និងអាយ៉ាត់ៗរបស់ទ្រង់ ហើយនិងអ្នកនាំសាររបស់ទ្រង់ឬ?

៦៦-ពួកអ្នកមិនចាំបាច់ដោះសាទៀតទេ ជាការពិតណាស់ ពួកអ្នកបានប្រឆាំងក្រោយពីពួកអ្នកមានជំនឿហើយនោះ ។ បើយើងលើកលែងទោសឱ្យក្រុមមួយក្នុងចំណោមពួកអ្នក ក៏យើងនឹងធ្វើទារុណកម្មក្រុមមួយផ្សេងទៀតដែរ ព្រោះពួកគេជាពួកដែលបានប្រព្រឹត្តបាបកម្ម ។

៦៧-ពួកពុតត្បុតទាំងប្រុសទាំងស្រីគឺពួកគេដូចគ្នា ។ ពួកគេប្រើគ្នាឱ្យប្រព្រឹត្តអំពើអាក្រក់និងហាមឃាត់គ្នាពីការសាងអំពើល្អ ហើយពួកគេក្ដាប់ដៃរបស់ពួកគេ(កំណាញ់) ។ ពួកគេបានភ្លេចអល់ឡោះដូច្នោះហើយទ្រង់ក៏បានភ្លេចពួកគេវិញដែរ ។ ពិតប្រាកដណាស់ ពួកពុតត្បុតគឺជាពួកដែលល្មើស ។

يَحْلِفُونَ بِٱللَّهِ لَكُمْ لِيُرْضُوكُمْ وَٱللَّهُ
وَرَسُولُهُۥٓ أَحَقُّ أَن يُرْضُوهُ إِن كَانُوا۟
مُؤْمِنِينَ ﴿٦٢﴾

أَلَمْ يَعْلَمُوٓا۟ أَنَّهُۥ مَن يُحَادِدِ ٱللَّهَ وَرَسُولَهُۥ
فَأَنَّ لَهُۥ نَارَ جَهَنَّمَ خَٰلِدًا فِيهَا ۚ ذَٰلِكَ
ٱلْخِزْىُ ٱلْعَظِيمُ ﴿٦٣﴾

يَحْذَرُ ٱلْمُنَٰفِقُونَ أَن تُنَزَّلَ عَلَيْهِمْ سُورَةٌ
تُنَبِّئُهُم بِمَا فِى قُلُوبِهِمْ ۚ قُلِ ٱسْتَهْزِءُوٓا۟ إِنَّ
ٱللَّهَ مُخْرِجٌ مَّا تَحْذَرُونَ ﴿٦٤﴾

وَلَئِن سَأَلْتَهُمْ لَيَقُولُنَّ إِنَّمَا كُنَّا نَخُوضُ
وَنَلْعَبُ ۚ قُلْ أَبِٱللَّهِ وَءَايَٰتِهِۦ وَرَسُولِهِۦ كُنتُمْ
تَسْتَهْزِءُونَ ﴿٦٥﴾

لَا تَعْتَذِرُوا۟ قَدْ كَفَرْتُم بَعْدَ إِيمَٰنِكُمْ ۚ إِن
نَّعْفُ عَن طَآئِفَةٍ مِّنكُمْ نُعَذِّبْ طَآئِفَةًۢ بِأَنَّهُمْ
كَانُوا۟ مُجْرِمِينَ ﴿٦٦﴾

ٱلْمُنَٰفِقُونَ وَٱلْمُنَٰفِقَٰتُ بَعْضُهُم مِّنۢ بَعْضٍ ۚ
يَأْمُرُونَ بِٱلْمُنكَرِ وَيَنْهَوْنَ عَنِ
ٱلْمَعْرُوفِ وَيَقْبِضُونَ أَيْدِيَهُمْ ۚ نَسُوا۟
ٱللَّهَ فَنَسِيَهُمْ ۗ إِنَّ ٱلْمُنَٰفِقِينَ هُمُ

ٱلۡفَٰسِقُونَ ٦٧

وَعَدَ ٱللَّهُ ٱلۡمُنَٰفِقِينَ وَٱلۡمُنَٰفِقَٰتِ وَٱلۡكُفَّارَ نَارَ جَهَنَّمَ خَٰلِدِينَ فِيهَاۚ هِيَ حَسۡبُهُمۡۚ وَلَعَنَهُمُ ٱللَّهُۖ وَلَهُمۡ عَذَابٞ مُّقِيمٞ ٦٨

كَٱلَّذِينَ مِن قَبۡلِكُمۡ كَانُوٓاْ أَشَدَّ مِنكُمۡ قُوَّةٗ وَأَكۡثَرَ أَمۡوَٰلٗا وَأَوۡلَٰدٗا فَٱسۡتَمۡتَعُواْ بِخَلَٰقِهِمۡ فَٱسۡتَمۡتَعۡتُم بِخَلَٰقِكُمۡ كَمَا ٱسۡتَمۡتَعَ ٱلَّذِينَ مِن قَبۡلِكُم بِخَلَٰقِهِمۡ وَخُضۡتُمۡ كَٱلَّذِي خَاضُوٓاْۚ أُوْلَٰٓئِكَ حَبِطَتۡ أَعۡمَٰلُهُمۡ فِي ٱلدُّنۡيَا وَٱلۡأٓخِرَةِۖ وَأُوْلَٰٓئِكَ هُمُ ٱلۡخَٰسِرُونَ ٦٩

أَلَمۡ يَأۡتِهِمۡ نَبَأُ ٱلَّذِينَ مِن قَبۡلِهِمۡ قَوۡمِ نُوحٖ وَعَادٖ وَثَمُودَ وَقَوۡمِ إِبۡرَٰهِيمَ وَأَصۡحَٰبِ مَدۡيَنَ وَٱلۡمُؤۡتَفِكَٰتِۚ أَتَتۡهُمۡ رُسُلُهُم بِٱلۡبَيِّنَٰتِۖ فَمَا كَانَ ٱللَّهُ لِيَظۡلِمَهُمۡ وَلَٰكِن كَانُوٓاْ أَنفُسَهُمۡ يَظۡلِمُونَ ٧٠

وَٱلۡمُؤۡمِنُونَ وَٱلۡمُؤۡمِنَٰتُ بَعۡضُهُمۡ أَوۡلِيَآءُ بَعۡضٖۚ يَأۡمُرُونَ بِٱلۡمَعۡرُوفِ وَيَنۡهَوۡنَ عَنِ ٱلۡمُنكَرِ وَيُقِيمُونَ ٱلصَّلَوٰةَ وَيُؤۡتُونَ

៦៨-អល់ឡោះបានសន្យាផ្តល់ឱ្យពួកពុតត្បុតទាំងប្រុស ទាំងស្រី និងពួកគ្មានជំនឿនូវនរកជើហាន់ណាំ ដែលពួកនេះត្រូវស្ថិតនៅក្នុងនោះជាអមតៈ ។ វា(នរក) គ្រប់គ្រាន់ហើយសម្រាប់ពួកគេ ។ ហើយអល់ឡោះបានដាក់បណ្តាសាពួកគេ ហើយពួកគេនឹងទទួលទារុណកម្មជានិរន្តរ៍ ។

៦៩-ដូចពួក(ពួកគ្មានជំនឿ)ដែលពីមុនៗពួកអ្នក(ពួកពុតត្បុត)ដែរ[១] ។ ពួកគេមានកម្លាំងពលំខ្លាំងក្លា និងមានទ្រព្យសម្បត្តិ និងកូនចៅច្រើនជាងពួកអ្នកទៅទៀត ។ ហើយពួកគេបានរីករាយនឹងភ័ព្វសំណាងរបស់ពួកគេ ។ រីឯពួកអ្នកក៏បានរីករាយនឹងភ័ព្វសំណាងរបស់ពួកអ្នកដូចដែលពួកគ្មានជំនឿមុនៗបានរីករាយនឹងភ័ព្វសំណាងរបស់ពួកគេដែរ ។ ហើយពួកអ្នកបាននិយាយចំអកដូចពួកគេបាននិយាយចំអកដែរ ។ ពួកទាំងនោះ អំពើទាំងឡាយរបស់ពួកគេបានរលាយអស់ទាំងនៅលើលោកិយ និងថ្ងៃបរលោក ។ ហើយពួកទាំងនោះគឺជាពួកដែលខាតបង់ ។

៧០-តើប្រវត្តិរឿងរបស់ពួកមុនៗពួកគេ(ពួកពុតត្បុត)ដូចជាក្រុមនួហ ក្រុមអាដ ក្រុមសាមូដ ក្រុមអ៊ីព្រហ៊ីម និងអ្នកភូមិម៉ាទ-យ៉ាន់ និងទីក្រុងដែលគេបានបំផ្លាញចោល(ក្រុមលូត) មិនបានមកដល់ពួកគេទេឬ? បណ្តាអ្នកនាំសាររបស់ពួកគេ(ពួកមុនៗ) បាននាំមកនូវភស្តុតាងនានាមកដល់ពួកគេ ។ ហើយអល់ឡោះមិនបានធ្វើបាបពួកគេទេ តែពួកគេទេដែលបានធ្វើបាបខ្លួនឯងនោះ ។

៧១-ហើយបណ្តាអ្នកដែលមានជំនឿទាំងប្រុសទាំងស្រី គឺពួកគេជួយគ្នាទៅវិញទៅមក ។ ពួកគេប្រើគ្នាឱ្យសាងអំពើល្អ និងហាមឃាត់គ្នាពីការប្រព្រឹត្តអំពើអាក្រក់ ហើយពួកគេប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ និងគោរពប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់) ។ អ្នកទាំងនោះអល់ឡោះនឹង

---

១-វាក្យខណ្ឌនេះអល់ឡោះបានប្រៀបធៀបពួកពុតត្បុតទៅនឹងពួកគ្មានជំនឿជំនាន់មុនគឺវាមានលក្ខណៈដូចគ្នាក្នុងការជឿលើទ្រង់ ។

ٱلزَّكَوٰةَ وَيُطِيعُونَ ٱللَّهَ وَرَسُولَهُۥٓۚ أُوْلَٰٓئِكَ
سَيَرۡحَمُهُمُ ٱللَّهُۗ إِنَّ ٱللَّهَ عَزِيزٌ حَكِيمٞ ﴿٧١﴾

អាណិតស្រឡាញ់ពួកគេ។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

وَعَدَ ٱللَّهُ ٱلۡمُؤۡمِنِينَ وَٱلۡمُؤۡمِنَٰتِ جَنَّٰتٖ
تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَا
وَمَسَٰكِنَ طَيِّبَةٗ فِي جَنَّٰتِ عَدۡنٖۚ وَرِضۡوَٰنٞ
مِّنَ ٱللَّهِ أَكۡبَرُۚ ذَٰلِكَ هُوَ ٱلۡفَوۡزُ
ٱلۡعَظِيمُ ﴿٧٢﴾

៧២-អល់ឡោះបានសន្យាចំពោះបណ្ដាអ្នកមានជំនឿទាំងប្រុសទាំងស្រីនូវឋានសួគ៌ដែលមានទន្លេជាច្រើនហូរកាត់ពីក្រោមវា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ និងមានលំនៅដ្ឋានជាច្រើនដ៏ល្អប្រណីតនៅក្នុងឋានសួគ៌អាត់និន។ ហើយការពេញចិត្តពីអល់ឡោះគឺធំធេងបំផុត។ នោះគឺជាជ័យជំនះដ៏ធំធេង។

يَٰٓأَيُّهَا ٱلنَّبِيُّ جَٰهِدِ ٱلۡكُفَّارَ وَٱلۡمُنَٰفِقِينَ
وَٱغۡلُظۡ عَلَيۡهِمۡۚ وَمَأۡوَىٰهُمۡ جَهَنَّمُۖ وَبِئۡسَ
ٱلۡمَصِيرُ ﴿٧٣﴾

៧៣-ឱណាពី(មូហាំម៉ាត់)! ចូរអ្នកតស៊ូប្រឆាំងនឹងពួកគ្មានជំនឿ និងពួកពុតត្បុត ហើយអ្នកត្រូវប្រឆាំងឱ្យខ្លាំងនឹងពួកគេ។ ហើយទីលំនៅរបស់ពួកគេគឺនរកជើហាន់ណាំ ដែលជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត។

يَحۡلِفُونَ بِٱللَّهِ مَا قَالُواْ وَلَقَدۡ قَالُواْ كَلِمَةَ
ٱلۡكُفۡرِ وَكَفَرُواْ بَعۡدَ إِسۡلَٰمِهِمۡ وَهَمُّواْ بِمَا
لَمۡ يَنَالُواْۚ وَمَا نَقَمُوٓاْ إِلَّآ أَنۡ أَغۡنَىٰهُمُ ٱللَّهُ
وَرَسُولُهُۥ مِن فَضۡلِهِۦۚ فَإِن يَتُوبُواْ يَكُ خَيۡرٗا
لَّهُمۡۖ وَإِن يَتَوَلَّوۡاْ يُعَذِّبۡهُمُ ٱللَّهُ عَذَابًا أَلِيمٗا فِي
ٱلدُّنۡيَا وَٱلۡأٓخِرَةِۚ وَمَا لَهُمۡ فِي ٱلۡأَرۡضِ مِن
وَلِيّٖ وَلَا نَصِيرٖ ﴿٧٤﴾

៧៤-ពួកគេ(ពួកពុតត្បុត)ស្បថនឹងអល់ឡោះថាៈ ពួកគេមិនបាននិយាយអ្វីឡើយ តែតាមពិតពួកគេបាននិយាយនូវពាក្យសំដីដែលគ្មានជំនឿ។ ហើយពួកគេបានប្រឆាំងវិញ បន្ទាប់ពីការចូលសាសនាអ៊ិស្លាមរបស់ពួកគេហើយនោះ។ ហើយពួកគេប៉ុនប៉ងនូវអ្វីដែលពួកគេមិនអាចសម្រេចបាន។ ហើយពួកគេមិនអាចធ្វើអ្វីបានឡើយ លើកលែងតែអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ធ្វើឱ្យពួកគេមានបានដោយការប្រោសប្រទានរបស់ទ្រង់ប៉ុណ្ណោះ។ ប្រសិនបើពួកគេសារភាពកំហុសនោះ វាជាការប្រសើរសម្រាប់ពួកគេ។ តែបើពួកគេបែរចេញវិញ អល់ឡោះនឹងធ្វើទារុណកម្មពួកគេនូវទារុណកម្មមួយដ៏ឈឺចាប់ទាំងនៅក្នុងលោកិយ និងថ្ងៃបរលោក។ ហើយសម្រាប់ពួកគេនៅលើផែនដីនេះគ្មានអ្នកគាំពារ និងគ្មានអ្នកជួយឡើយ។

۞ وَمِنۡهُم مَّنۡ عَٰهَدَ ٱللَّهَ لَئِنۡ ءَاتَىٰنَا مِن
فَضۡلِهِۦ لَنَصَّدَّقَنَّ وَلَنَكُونَنَّ مِنَ

៧៥-ក្នុងចំណោមពួកគេ(ពួកពុតត្បុត)មានអ្នកដែលបានសន្យាជាមួយអល់ឡោះថាៈ ប្រសិនបើទ្រង់បានផ្ដល់ការប្រោសប្រទាន(លាភសក្ការៈ)របស់ទ្រង់ដល់ពួកយើងនោះ ពួកយើងពិតជាជឿ

ٱلصَّٰلِحِينَ ﴿٧٥﴾

លើទ្រង់ ហើយពួកយើងពិតជានឹងស្ថិតក្នុងចំណោមអ្នកដែលសាងអំពើល្អជាមិនខាន។

فَلَمَّآ ءَاتَىٰهُم مِّن فَضۡلِهِۦ بَخِلُواْ بِهِۦ وَتَوَلَّواْ وَّهُم مُّعۡرِضُونَ ﴿٧٦﴾

៧៦-តែនៅពេលដែលទ្រង់បានផ្ដល់ឱ្យពួកគេនូវការប្រោសប្រទាន( លាភសក្ការៈ)របស់ទ្រង់នោះ ពួកគេបែរជាកំណាញ់ ( មិនបរិច្ចាគ)ទៅវិញ។ ហើយពួកគេបានបែរចេញក្នុងនាមពួកគេជាពួកដែលប្រឆាំង ។

فَأَعۡقَبَهُمۡ نِفَاقًا فِي قُلُوبِهِمۡ إِلَىٰ يَوۡمِ يَلۡقَوۡنَهُۥ بِمَآ أَخۡلَفُواْ ٱللَّهَ مَا وَعَدُوهُ وَبِمَا كَانُواْ يَكۡذِبُونَ ﴿٧٧﴾

៧៧-ហើយទ្រង់ក៏ដាក់ទណ្ឌកម្មពួកគេដោយដាក់ភាពពុតត្បុតទៅក្នុងចិត្តរបស់ពួកគេរហូតដល់ថ្ងៃដែលពួកគេជួបទ្រង់ដោយសារតែពួកគេបានក្បត់នឹងអល់ឡោះនូវអ្វីដែលពួកគេបានសន្យាជាមួយទ្រង់ និងដោយសារតែអ្វីដែលពួកគេធ្លាប់ភូតកុហកនោះ។

أَلَمۡ يَعۡلَمُوٓاْ أَنَّ ٱللَّهَ يَعۡلَمُ سِرَّهُمۡ وَنَجۡوَىٰهُمۡ وَأَنَّ ٱللَّهَ عَلَّٰمُ ٱلۡغُيُوبِ ﴿٧٨﴾

៧៨-តើពួកគេមិនដឹងថា ពិតប្រាកដណាស់ អល់ឡោះដឹងពីអាថិកំបាំង និងការខ្សឹបខ្សៀវ( ផែនការអាក្រក់)របស់ពួកគេទេឬ? ហើយពិតប្រាកដណាស់ អល់ឡោះជាអ្នកដឹងបំផុតចំពោះរឿងអាថិកំបាំងទាំងអស់។

ٱلَّذِينَ يَلۡمِزُونَ ٱلۡمُطَّوِّعِينَ مِنَ ٱلۡمُؤۡمِنِينَ فِي ٱلصَّدَقَٰتِ وَٱلَّذِينَ لَا يَجِدُونَ إِلَّا جُهۡدَهُمۡ فَيَسۡخَرُونَ مِنۡهُمۡ سَخِرَ ٱللَّهُ مِنۡهُمۡ وَلَهُمۡ عَذَابٌ أَلِيمٌ ﴿٧٩﴾

៧៩-ពួកដែលបង្ខូចកេរ្តិ៍ឈ្មោះសប្បុរសជនទាំងឡាយក្នុងចំណោមអ្នកមានជំនឿដែលបរិច្ចាគ( ទ្រព្យសម្បត្តិ) និងពួកដែលគ្មានអ្វី( បរិច្ចាគ)ក្រៅពីតាមលទ្ធភាពរបស់ពួកគេនោះ ពួកគេ( ពួកពុតត្បុត)ចំអកដល់ពួកទាំងនោះ( អ្នកមានជំនឿ) ។ អល់ឡោះនឹងចំអកឱ្យពួកគេវិញ ហើយពួកគេនឹងទទួលទារុណកម្មយ៉ាងឈឺចាប់។

ٱسۡتَغۡفِرۡ لَهُمۡ أَوۡ لَا تَسۡتَغۡفِرۡ لَهُمۡ إِن تَسۡتَغۡفِرۡ لَهُمۡ سَبۡعِينَ مَرَّةً فَلَن يَغۡفِرَ ٱللَّهُ لَهُمۡۚ ذَٰلِكَ بِأَنَّهُمۡ كَفَرُواْ بِٱللَّهِ وَرَسُولِهِۦۗ وَٱللَّهُ لَا يَهۡدِي ٱلۡقَوۡمَ ٱلۡفَٰسِقِينَ ﴿٨٠﴾

៨០-ទោះបីជាអ្នក( មូហាំម៉ាត់)សុំអភ័យទោសឱ្យពួកគេ ឬមិនសុំអភ័យទោសឱ្យពួកគេក៏ដោយ( ក៏អល់ឡោះមិនអភ័យទោសឱ្យដែរ) ។ ប្រសិនបើអ្នកសុំអភ័យទោសឱ្យពួកគេចំនួនចិតសិបដងក៏ដោយ ក៏អល់ឡោះមិនអភ័យទោសឱ្យពួកគេដែរ ព្រោះពួកគេគ្មានជំនឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ឡើយ។ ហើយអល់ឡោះមិនចង្អុលបង្ហាញដល់ក្រុមដែលប្រព្រឹត្តល្មើសឡើយ។

فَرِحَ ٱلۡمُخَلَّفُونَ بِمَقۡعَدِهِمۡ خِلَٰفَ رَسُولِ ٱللَّهِ وَكَرِهُوٓاْ أَن يُجَٰهِدُواْ بِأَمۡوَٰلِهِمۡ

៨១-ពួកប្រឆាំងបានរីករាយនឹងការស្នាក់នៅរបស់ពួកគេពីក្រោយអ្នកនាំសាររបស់អល់ឡោះ( ដោយមិនចេញទៅប្រយុទ្ធ) ។ ហើយពួកគេមិនពេញចិត្តក្នុងការតស៊ូដោយទ្រព្យសម្បត្តិរបស់ពួក

وَأَنفُسِهِمْ فِي سَبِيلِ ٱللَّهِ وَقَالُوا۟ لَا تَنفِرُوا۟
فِي ٱلْحَرِّ ۗ قُلْ نَارُ جَهَنَّمَ أَشَدُّ حَرًّا ۚ لَّوْ كَانُوا۟
يَفْقَهُونَ ﴿٨١﴾

គេ និងជីវិតរបស់ពួកគេក្នុងមាគ៌ារបស់អល់ឡោះឡើយ ព្រមទាំងពួកគេនិយាយថាៈ ពួកអ្នកមិនត្រូវចេញទៅនៅពេលថ្ងៃក្ដៅនោះទេ ។ ចូរអ្នក( មូហាំម៉ាត់) តបវិញថាៈ ភ្លើងនរកជើហាន់ណាំ គឺក្ដៅខ្លាំងជាងនេះទៅទៀត ប្រសិនបើពួកគេបានដឹង ។

فَلْيَضْحَكُوا۟ قَلِيلًا وَلْيَبْكُوا۟ كَثِيرًا جَزَآءًۢ بِمَا
كَانُوا۟ يَكْسِبُونَ ﴿٨٢﴾

៨២-ដូច្នេះ ចូរឱ្យពួកគេសើចសប្បាយរីករាយ( នៅក្នុងលោកិយ) បន្ដិចសិនចុះ ហើយពួកគេនឹងយំស្រែកយ៉ាងច្រើន( នៅថ្ងៃបរលោក) ជាមិនខាន ។ នេះគឺជាការតបស្នងដោយសារតែអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ដ ។

فَإِن رَّجَعَكَ ٱللَّهُ إِلَىٰ طَآئِفَةٍ مِّنْهُمْ
فَٱسْتَـْٔذَنُوكَ لِلْخُرُوجِ فَقُل لَّن تَخْرُجُوا۟ مَعِىَ
أَبَدًا وَلَن تُقَٰتِلُوا۟ مَعِىَ عَدُوًّا ۖ إِنَّكُمْ رَضِيتُم
بِٱلْقُعُودِ أَوَّلَ مَرَّةٍ فَٱقْعُدُوا۟ مَعَ ٱلْخَٰلِفِينَ ﴿٨٣﴾

៨៣-ប្រសិនបើអល់ឡោះបញ្ជូនអ្នក( មូហាំម៉ាត់) ត្រឡប់ទៅកាន់ក្រុមមួយនៃពួកគេ( ពួកពុតត្បុត) បន្ទាប់មកពួកគេសុំអនុញ្ញាតពីអ្នកដើម្បីចេញទៅ( ច្បាំង) នោះ ដូច្នេះចូរអ្នកពោលថាៈ ពួកអ្នកមិនបាច់ចេញទៅជាមួយខ្ញុំជាដាច់ខាត ហើយក៏មិនបាច់ចូលរួមច្បាំងជាមួយខ្ញុំនឹងសត្រូវណាមួយដែរ ។ ពិតប្រាកដណាស់ ពួកអ្នកបានពេញចិត្ដអង្គុយ( នៅទំនេរ) តាំងពីដំបូងមកម្ល៉េះ ។ ដូច្នេះហើយ ចូរពួកអ្នកអង្គុយជាមួយពួកដែលមិនព្រម ( មិនទៅធ្វើសង្គ្រាម) ទៀតចុះ ។

وَلَا تُصَلِّ عَلَىٰٓ أَحَدٍ مِّنْهُم مَّاتَ أَبَدًا
وَلَا تَقُمْ عَلَىٰ قَبْرِهِۦٓ ۖ إِنَّهُمْ كَفَرُوا۟ بِٱللَّهِ
وَرَسُولِهِۦ وَمَاتُوا۟ وَهُمْ فَٰسِقُونَ ﴿٨٤﴾

៨៤-ហើយអ្នកមិនត្រូវសឡាតឱ្យអ្នកណាម្នាក់ក្នុងចំណោមពួកគេ( ពួកពុតត្បុត) ដែលបានស្លាប់ជាដាច់ខាត ហើយអ្នកក៏មិនត្រូវឈរនៅលើផ្នូររបស់គេ( ដើម្បីសុំអភ័យទោសឱ្យគេ) ដែរ ។ ពិតប្រាកដណាស់ ពួកគេមិនបានជឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ឡើយ ហើយពួកគេបានស្លាប់ ខណៈដែលពួកគេជាជនល្មើស ។

وَلَا تُعْجِبْكَ أَمْوَٰلُهُمْ وَأَوْلَٰدُهُمْ ۚ إِنَّمَا يُرِيدُ
ٱللَّهُ أَن يُعَذِّبَهُم بِهَا فِى ٱلدُّنْيَا وَتَزْهَقَ أَنفُسُهُمْ
وَهُمْ كَٰفِرُونَ ﴿٨٥﴾

៨៥-ហើយចូរកុំបណ្ដោយឱ្យទ្រព្យសម្បត្ដិរបស់ពួកគេនិងកូនចៅរបស់ពួកគេធ្វើឱ្យអ្នក( មូហាំម៉ាត់) ភ្ញាក់ផ្អើលឱ្យសោះ ។ តាមពិតអល់ឡោះចង់ដាក់ទណ្ឌកម្មពួកគេជាមួយប្រការទាំងនេះនៅលើលោកិយ ហើយដើម្បីឱ្យព្រលឹងរបស់ពួកគេចេញទៅ( ស្លាប់) ខណៈដែលពួកគេជាពួកគ្មានជំនឿ ។

وَإِذَآ أُنزِلَتْ سُورَةٌ أَنْ ءَامِنُوا۟ بِٱللَّهِ وَجَٰهِدُوا۟
مَعَ رَسُولِهِ ٱسْتَـْٔذَنَكَ أُو۟لُوا۟ ٱلطَّوْلِ مِنْهُمْ

៨៦-ហើយនៅពេលដែលជំពូកណាមួយត្រូវបានគេបញ្ចុះដោយឱ្យពួកគេមានជំនឿលើអល់ឡោះ និងឱ្យពួកគេតស៊ូច្បាំង

(នឹងសត្រូវ) ជាមួយអ្នកនាំសាររបស់ទ្រង់នោះ ពួកដែលមានទ្រព្យសម្បត្តិក្នុងចំណោមពួកគេបានសុំអនុញ្ញាតពីអ្នក ដោយពួកគេបាននិយាយថាៈ សូមអ្នកមេត្តាទុកពួកយើងឱ្យនៅជាមួយពួកដែលអង្គុយ(នៅផ្ទះមិនបាច់ទៅច្បាំង ដូចជាស្ត្រីភេទ ចាស់ជរា...) ផង ។

៨៧-ពួកគេរីករាយនឹងនៅជាមួយពួកដែលមិនបានទៅធ្វើសង្គ្រាម ហើយគេ(អល់ឡោះ) បានបោះត្រាភ្ជិតលើចិត្តរបស់ពួកគេ ។ ដូច្នោះហើយពួកគេមិនយល់អ្វីឡើយ ។

៨៨-ប៉ុន្តែអ្នកនាំសារ និងបណ្តាអ្នកដែលរួមជំនឿជាមួយគេ (មូហាំម៉ាត់) ពួកគេបានតស៊ូធ្វើសង្គ្រាមដោយទ្រព្យសម្បត្តិ និងខ្លួនប្រាណរបស់ពួកគេ(ដើម្បីអល់ឡោះ) ។ ហើយអ្នកទាំងនោះនឹងទទួលបានផលល្អ ហើយអ្នកទាំងនោះជាអ្នកដែលជោគជ័យ ។

៨៩-អល់ឡោះបានត្រៀមទុកសម្រាប់ពួកគេនូវឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។ ទាំងនោះហើយជាជោគជ័យដ៏ធំធេង ។

៩០-ហើយពួកដែលដោះសាក្នុងចំណោមពួកអារ៉ាប់ជនបទបានមកជួប(មូហាំម៉ាត់) ដើម្បីសុំគាត់ឱ្យអនុញ្ញាតដល់ពួកគេ(មិនទៅធ្វើសង្គ្រាម) ។ ហើយពួកដែលបានភូតកុហកអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់បានអង្គុយនៅផ្ទះ(យ៉ាងព្រហើនដោយមិនបានមកសុំការអនុញ្ញាតពីមូហាំម៉ាត់) ។ ពួកដែលបានប្រឆាំងក្នុងចំណោមពួកគេនឹងត្រូវទទួលទារុណកម្មយ៉ាងឈឺចាប់ ។

៩១-គ្មានទោសពៃរ៍ចំពោះអ្នកទន់ខ្សោយ និងអ្នកមានជំងឺ និងអ្នកគ្មានលទ្ធភាពបរិច្ចាគ(ក្នុងមាគ៌ារបស់អល់ឡោះ) ឡើយ ប្រសិនបើពួកគេស្មោះត្រង់នឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់នោះ ។ គ្មានហេតុផលណាដែលត្រូវបន្ទោសបណ្តាអ្នកដែលសាងអំពើល្អឡើយ ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

៩២-ហើយក៏គ្មានទោសពៃរ៍អ្វីដែរចំពោះបណ្តាអ្នកដែលបាន

وَقَالُواْ ذَرۡنَا نَكُن مَّعَ ٱلۡقَٰعِدِينَ ٨٦

رَضُواْ بِأَن يَكُونُواْ مَعَ ٱلۡخَوَالِفِ وَطُبِعَ عَلَىٰ
قُلُوبِهِمۡ فَهُمۡ لَا يَفۡقَهُونَ ٨٧

لَٰكِنِ ٱلرَّسُولُ وَٱلَّذِينَ ءَامَنُواْ مَعَهُۥ
جَٰهَدُواْ بِأَمۡوَٰلِهِمۡ وَأَنفُسِهِمۡۚ وَأُوْلَٰٓئِكَ لَهُمُ
ٱلۡخَيۡرَٰتُۖ وَأُوْلَٰٓئِكَ هُمُ ٱلۡمُفۡلِحُونَ ٨٨

أَعَدَّ ٱللَّهُ لَهُمۡ جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ
خَٰلِدِينَ فِيهَاۚ ذَٰلِكَ ٱلۡفَوۡزُ ٱلۡعَظِيمُ ٨٩

وَجَآءَ ٱلۡمُعَذِّرُونَ مِنَ ٱلۡأَعۡرَابِ لِيُؤۡذَنَ
لَهُمۡ وَقَعَدَ ٱلَّذِينَ كَذَبُواْ ٱللَّهَ وَرَسُولَهُۥۚ
سَيُصِيبُ ٱلَّذِينَ كَفَرُواْ مِنۡهُمۡ عَذَابٌ
أَلِيمٞ ٩٠

لَّيۡسَ عَلَى ٱلضُّعَفَآءِ وَلَا عَلَى ٱلۡمَرۡضَىٰ وَلَا
عَلَى ٱلَّذِينَ لَا يَجِدُونَ مَا يُنفِقُونَ
حَرَجٌ إِذَا نَصَحُواْ لِلَّهِ وَرَسُولِهِۦۚ مَا عَلَى
ٱلۡمُحۡسِنِينَ مِن سَبِيلٖۚ وَٱللَّهُ غَفُورٞ
رَّحِيمٞ ٩١

وَلَا عَلَى ٱلَّذِينَ إِذَا مَآ أَتَوۡكَ لِتَحۡمِلَهُمۡ

قُلْتَ لَآ أَجِدُ مَآ أَحْمِلُكُمْ عَلَيْهِ تَوَلَّواْ
وَّأَعْيُنُهُمْ تَفِيضُ مِنَ ٱلدَّمْعِ حَزَنًا أَلَّا يَجِدُواْ
مَا يُنفِقُونَ ٩٢

មកជួបអ្នក(មូហាំម៉ាត់)ដើម្បីឱ្យអ្នកផ្ដល់ជំនិះដល់ពួកគេដោយអ្នកបានពោលថាៈ ខ្ញុំមិនអាចរកជំនិះសម្រាប់ពួកអ្នកជិះបានឡើយ។ ពួកគេបានវិលត្រឡប់ទៅវិញទាំងស្រក់ទឹកភ្នែកដោយភាពទុក្ខព្រួយព្រោះតែពួកគេគ្មានលទ្ធភាពបរិច្ចាគ។

۞ إِنَّمَا ٱلسَّبِيلُ عَلَى ٱلَّذِينَ يَسْتَـْٔذِنُونَكَ
وَهُمْ أَغْنِيَآءُۚ رَضُواْ بِأَن يَكُونُواْ مَعَ
ٱلْخَوَالِفِ وَطَبَعَ ٱللَّهُ عَلَىٰ قُلُوبِهِمْ فَهُمْ لَا
يَعْلَمُونَ ٩٣

៩៣-តាមពិត វិធីដាក់ទោសនោះ គឺចំពោះតែពួកដែលសុំអនុញ្ញាតពីអ្នក(មិនទៅធ្វើសង្គ្រាម)ក្នុងករណីពួកគេជាអ្នកមានទ្រព្យសម្បត្តិប៉ុណ្ណោះ។ ពួកគេពេញចិត្តនៅជាមួយពួកដែលអសមត្ថភាព ហើយអល់ឡោះក៏បានបោះត្រាភ្ជិតលើចិត្តពួកគេ។ ដូច្នេះពួកគេមិនដឹងឡើយ។

يَعْتَذِرُونَ إِلَيْكُمْ إِذَا رَجَعْتُمْ إِلَيْهِمْۚ قُل لَّا
تَعْتَذِرُواْ لَن نُّؤْمِنَ لَكُمْ قَدْ نَبَّأَنَا ٱللَّهُ
مِنْ أَخْبَارِكُمْۚ وَسَيَرَى ٱللَّهُ عَمَلَكُمْ
وَرَسُولُهُۥ ثُمَّ تُرَدُّونَ إِلَىٰ عَٰلِمِ ٱلْغَيْبِ
وَٱلشَّهَٰدَةِ فَيُنَبِّئُكُم بِمَا كُنتُمْ تَعْمَلُونَ ٩٤

៩៤-ពួកគេ(ពួកពុតត្បុត)នឹងឆ្លើយដោះសាចំពោះពួកអ្នក(អ្នកមានជំនឿ) នៅពេលដែលពួកអ្នកបានវិលត្រឡប់ទៅកាន់ពួកគេវិញ(ក្រោយចប់សង្គ្រាម)។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពួកអ្នកមិនបាច់ឆ្លើយដោះសាទេ ពួកយើងនឹងមិនជឿលើពួកអ្នកឡើយ។ ជាការពិតណាស់ អល់ឡោះបានប្រាប់ពួកយើងពីដំណឹង(ភូតកុហក)ទាំងឡាយរបស់ពួកអ្នកអស់ហើយ។ ហើយអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់នឹងមើលឃើញអំពើរបស់ពួកអ្នក។ បន្ទាប់មកពួកអ្នកនឹងត្រូវគេបញ្ជូនត្រឡប់ទៅកាន់អ្នកដែលដឹងប្រការអាថ៌កំបាំង និងប្រការលាតត្រដាង រួចទ្រង់នឹងបញ្ជាក់ប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកបានប្រព្រឹត្ត។

سَيَحْلِفُونَ بِٱللَّهِ لَكُمْ إِذَا ٱنقَلَبْتُمْ إِلَيْهِمْ
لِتُعْرِضُواْ عَنْهُمْۖ فَأَعْرِضُواْ عَنْهُمْۖ إِنَّهُمْ
رِجْسٌۖ وَمَأْوَىٰهُمْ جَهَنَّمُ جَزَآءَۢ بِمَا كَانُواْ
يَكْسِبُونَ ٩٥

៩៥-ពួកគេនឹងស្បថជាមួយនឹងអល់ឡោះ ដើម្បី(យកចិត្ត)ពួកអ្នក នៅពេលពួកអ្នកបានវិលត្រឡប់ទៅកាន់ពួកគេវិញ(ក្រោយចប់សង្គ្រាម)ដើម្បីកុំឱ្យពួកអ្នកងាកចេញពីពួកគេ។ ហេតុនេះ ចូរពួកអ្នកងាកចេញពីពួកគេចុះ។ ពិតប្រាកដណាស់ ពួកគេកខ្វក់។ ហើយទីជំរករបស់ពួកគេគឺនរកជើហាន់ណាំដែលជាការតបស្នងនូវអ្វីដែលពួកគេបានប្រព្រឹត្ត។

يَحْلِفُونَ لَكُمْ لِتَرْضَوْاْ عَنْهُمْۖ فَإِن تَرْضَوْاْ
عَنْهُمْ فَإِنَّ ٱللَّهَ لَا يَرْضَىٰ عَنِ ٱلْقَوْمِ

៩៦-ពួកគេបានស្បថចំពោះពួកអ្នក ដើម្បីឱ្យពួកអ្នកអនុគ្រោះដល់ពួកគេ។ តែទោះបីជាពួកអ្នកអនុគ្រោះដល់ពួកគេក៏ដោយ ក៏អល់ឡោះពិតជាមិនអនុគ្រោះដល់ក្រុមដែលប្រព្រឹត្តល្មើសដែរ។

ٱلۡفَٰسِقِينَ ﴿٩٦﴾

ٱلۡأَعۡرَابُ أَشَدُّ كُفۡرٗا وَنِفَاقٗا وَأَجۡدَرُ أَلَّا
يَعۡلَمُواْ حُدُودَ مَآ أَنزَلَ ٱللَّهُ عَلَىٰ رَسُولِهِۦۗ
وَٱللَّهُ عَلِيمٌ حَكِيمٞ ﴿٩٧﴾

وَمِنَ ٱلۡأَعۡرَابِ مَن يَتَّخِذُ مَا يُنفِقُ مَغۡرَمٗا
وَيَتَرَبَّصُ بِكُمُ ٱلدَّوَآئِرَۚ عَلَيۡهِمۡ دَآئِرَةُ ٱلسَّوۡءِۗ
وَٱللَّهُ سَمِيعٌ عَلِيمٞ ﴿٩٨﴾

وَمِنَ ٱلۡأَعۡرَابِ مَن يُؤۡمِنُ بِٱللَّهِ وَٱلۡيَوۡمِ
ٱلۡأٓخِرِ وَيَتَّخِذُ مَا يُنفِقُ قُرُبَٰتٍ عِندَ ٱللَّهِ
وَصَلَوَٰتِ ٱلرَّسُولِۚ أَلَآ إِنَّهَا قُرۡبَةٞ لَّهُمۡۚ
سَيُدۡخِلُهُمُ ٱللَّهُ فِي رَحۡمَتِهِۦٓۚ إِنَّ ٱللَّهَ غَفُورٞ
رَّحِيمٞ ﴿٩٩﴾

وَٱلسَّٰبِقُونَ ٱلۡأَوَّلُونَ مِنَ ٱلۡمُهَٰجِرِينَ
وَٱلۡأَنصَارِ وَٱلَّذِينَ ٱتَّبَعُوهُم بِإِحۡسَٰنٖ
رَّضِيَ ٱللَّهُ عَنۡهُمۡ وَرَضُواْ عَنۡهُ وَأَعَدَّ لَهُمۡ
جَنَّٰتٖ تَجۡرِي تَحۡتَهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَآ
أَبَدٗاۚ ذَٰلِكَ ٱلۡفَوۡزُ ٱلۡعَظِيمُ ﴿١٠٠﴾

៩៧-ពួកអារ៉ាប់ជនបទគ្មានជំនឿ និងមានពុតត្បុតខ្លាំងជាងគេ ហើយជាងនេះទៅទៀតពួកគេថែមទាំងមិនដឹងពីព្រំដែនច្បាប់ដែលអល់ឡោះបានបញ្ចុះមកឱ្យអ្នកនាំសាររបស់ទ្រង់ទៀតផង។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

៩៨-ហើយក្នុងចំណោមពួកអារ៉ាប់ជនបទ មានអ្នកខ្លះបានចាត់ទុកអ្វីដែលគេបានបរិច្ចាគ( ក្នុងមាគ៌ាអល់ឡោះ) គឺជាការខាតបង់ ហើយគេនឹងរង់ចាំមើលគ្រោះថ្នាក់កើតឡើងចំពោះពួកអ្នក។ តែគ្រោះអាក្រក់នោះកើតមានចំពោះពួកគេទៅវិញទេ។ ហើយអល់ឡោះមហាឮ មហាដឹង។

៩៩-ហើយក្នុងចំណោមពួកអារ៉ាប់ជនបទ អ្នកខ្លះជឿលើអល់ឡោះ និងថ្ងៃបរលោក ហើយគេចាត់ទុកអ្វីដែលគេបរិច្ចាគ គឺដើម្បីបញ្ចិតខ្លួនចំពោះអល់ឡោះ និងទទួលការបួងសួងពីអ្នកនាំសារផងដែរ។ ចូរជ្រាបថា ពិតប្រាកដណាស់វាជាការបញ្ចិតខ្លួនសម្រាប់ពួកគេ។ អល់ឡោះនឹងបញ្ចូលពួកគេទៅក្នុងក្តីមេត្តាករុណារបស់ទ្រង់។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

១០០-ហើយបណ្តាអ្នកមុនដំបូងគេបង្អស់នៃបណ្តាអ្នក មូហ៊ើជីរីន[១] និងបណ្តាអ្នកអាន់ស័រ[២] ហើយនិងបណ្តាអ្នកដែលបានដើរតាមគន្លងធម៌ពួកគេ ដោយត្រឹមត្រូវអល់ឡោះបានពេញចិត្តពួកគេ ហើយពួកគេក៏ពេញចិត្តចំពោះទ្រង់វិញដែរ។ ហើយទ្រង់បានរៀបចំទុកសម្រាប់ពួកគេនូវឋានសួគ៌ដែលមានទន្លេជាច្រើនហូរកាត់ពីក្រោមវា ដោយពួកគេនៅក្នុងនោះជាអមតៈ។ ទាំងនោះគឺជាជោគជ័យយ៉ាងធំធេង។

---

១-អ្នកធ្វើចំណាកស្រុកពីទីក្រុងម៉ាក្កះទៅទីក្រុងម៉ាឌីណះដោយការធ្វើទុក្ខបុកម្នេញពីសំណាក់ពួកអារ៉ាប់គូរ៉ស្ហដែលគ្មានជំនឿលើមូហាំម៉ាត់។

២-ពួកអ្នកនៅទីក្រុងម៉ាឌីណះដែលរង់ចាំជួយរ៉ស៊ូលុលឡោះនិងពួកអ្នកធ្វើចំណាកស្រុកជាមួយគាត់។

وَمِمَّنْ حَوْلَكُم مِّنَ ٱلْأَعْرَابِ مُنَٰفِقُونَ ۖ
وَمِنْ أَهْلِ ٱلْمَدِينَةِ ۖ مَرَدُوا۟ عَلَى ٱلنِّفَاقِ لَا
تَعْلَمُهُمْ ۖ نَحْنُ نَعْلَمُهُمْ ۚ سَنُعَذِّبُهُم مَّرَّتَيْنِ ثُمَّ
يُرَدُّونَ إِلَىٰ عَذَابٍ عَظِيمٍ ﴿١٠١﴾

១០១-ហើយក្នុងចំណោមពួកអារ៉ាប់ជនបទដែលនៅជុំវិញពួកអ្នក មានអ្នកខ្លះគឺជាពួកពុតត្បុត។ ហើយនៅក្នុងចំណោមប្រជាជននៅក្រុងម៉ាឌីណះខ្លះ ពួកគេរឹងរូសក្នុងភាពពុតត្បុតនៅឡើយ ដែលអ្នក(មូហាំម៉ាត់) មិនស្គាល់ពួកគេទេ តែយើង(អល់ឡោះ) ស្គាល់ពួកគេ។ យើងនឹងដាក់ទណ្ឌកម្មពួកគេពីរដង(ក្នុងលោកិយ និងក្នុងផ្នូរ ក្រោយមកពួកគេនឹងត្រូវគេបញ្ជូនទៅកាន់ទារុណកម្មដ៏ធ្ងន់ធ្ងរ។

وَءَاخَرُونَ ٱعْتَرَفُوا۟ بِذُنُوبِهِمْ خَلَطُوا۟ عَمَلًا
صَٰلِحًا وَءَاخَرَ سَيِّئًا عَسَى ٱللَّهُ أَن يَتُوبَ
عَلَيْهِمْ ۚ إِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ ﴿١٠٢﴾

១០២-ហើយមានក្រុមផ្សេងទៀត បានទទួលស្គាល់បាបកម្មរបស់ពួកគេ ដោយពួកគេបានលាយឡំអំពើល្អជាមួយនឹងអំពើអាក្រក់ផ្សេងទៀត។ សង្ឃឹមថា អល់ឡោះនឹងទទួលយកការសារភាពកំហុសរបស់ពួកគេ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

خُذْ مِنْ أَمْوَٰلِهِمْ صَدَقَةً تُطَهِّرُهُمْ وَتُزَكِّيهِم بِهَا
وَصَلِّ عَلَيْهِمْ ۖ إِنَّ صَلَوٰتَكَ سَكَنٌ لَّهُمْ ۗ وَٱللَّهُ
سَمِيعٌ عَلِيمٌ ﴿١٠٣﴾

១០៣-ចូរអ្នក(មូហាំម៉ាត់) យកការបរិច្ចាគពីទ្រព្យសម្បត្តិរបស់ពួកគេ(ពួកសារភាពកំហុស) មួយចំនួនដើម្បីជំរះ និងសំអាត (បាបកម្ម) ពួកគេដោយការបរិច្ចាគនេះចុះ ហើយអ្នកត្រូវបួងសួងសុំឱ្យពួកគេផង ពិតប្រាកដណាស់ ការបួងសួងសុំរបស់អ្នកជាការស្ងប់ចិត្តសម្រាប់ពួកគេ។ ហើយអល់ឡោះមហាឮ មហាដឹង។

أَلَمْ يَعْلَمُوٓا۟ أَنَّ ٱللَّهَ هُوَ يَقْبَلُ ٱلتَّوْبَةَ عَنْ
عِبَادِهِۦ وَيَأْخُذُ ٱلصَّدَقَٰتِ وَأَنَّ ٱللَّهَ هُوَ
ٱلتَّوَّابُ ٱلرَّحِيمُ ﴿١٠٤﴾

១០៤-តើពួកគេ(ពួកមិនទាន់សារភាពកំហុស) មិនបានដឹងទេឬថា អល់ឡោះពិតជាអ្នកទទួលយកការសារភាពកំហុស និងទទួលយកការបរិច្ចាគនានាពីខ្ញុំទាំងឡាយរបស់ទ្រង់ ហើយអល់ឡោះពិតជាអ្នកទទួលយកការសារភាពកំហុស និងអាណិតស្រឡាញ់បំផុតនោះ?

وَقُلِ ٱعْمَلُوا۟ فَسَيَرَى ٱللَّهُ عَمَلَكُمْ وَرَسُولُهُۥ
وَٱلْمُؤْمِنُونَ ۖ وَسَتُرَدُّونَ إِلَىٰ عَٰلِمِ ٱلْغَيْبِ
وَٱلشَّهَٰدَةِ فَيُنَبِّئُكُم بِمَا كُنتُمْ تَعْمَلُونَ ﴿١٠٥﴾

១០៥-ចូរអ្នក(មូហាំម៉ាត់) ពោល(ទៅកាន់ពួកពុតត្បុត) ថា: ចូរពួកអ្នកសាងអំពើល្អ ហើយអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ និងបណ្ដាអ្នកដែលមានជំនឿនឹងមើលឃើញទង្វើរបស់ពួកអ្នក។ ហើយពួកអ្នកនឹងត្រូវគេបញ្ជូនត្រឡប់ទៅកាន់ម្ចាស់ដែលដឹងប្រការអាថ៌កំបាំង និងប្រការលាតត្រដាង រួចទ្រង់នឹងបញ្ជាក់ប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកបានសាង។

وَءَاخَرُونَ مُرْجَوْنَ لِأَمْرِ ٱللَّهِ إِمَّا يُعَذِّبُهُمْ
وَإِمَّا يَتُوبُ عَلَيْهِمْ ۗ وَٱللَّهُ عَلِيمٌ حَكِيمٌ ﴿١٠٦﴾

១០៦-ហើយមួយក្រុមទៀត(ក្នុងចំណោមពួកពុតត្បុត) ត្រូវបានគេពន្យារពេលដើម្បីរង់ចាំការសម្រេចរបស់អល់ឡោះ[1] ថាតើទ្រង់ធ្វើទារុណកម្មពួកគេ ឬក៏ទ្រង់ទទួលការសារភាពពីពួកគេ ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

وَٱلَّذِينَ ٱتَّخَذُوا۟ مَسْجِدًا ضِرَارًا وَكُفْرًا
وَتَفْرِيقًۢا بَيْنَ ٱلْمُؤْمِنِينَ وَإِرْصَادًا لِّمَنْ
حَارَبَ ٱللَّهَ وَرَسُولَهُۥ مِن قَبْلُ ۚ وَلَيَحْلِفُنَّ إِنْ
أَرَدْنَآ إِلَّا ٱلْحُسْنَىٰ ۖ وَٱللَّهُ يَشْهَدُ إِنَّهُمْ
لَكَـٰذِبُونَ ﴿١٠٧﴾

១០៧-ហើយពួកដែលបានកសាងម៉ាស្ជិទដើម្បីបង្កគ្រោះថ្នាក់(ដល់អ្នកមានជំនឿ)និងនាំឱ្យគ្មានជំនឿ ហើយនិងបង្កភាពបែកបាក់រវាងបណ្ដាអ្នកដែលមានជំនឿ ព្រមទាំងត្រៀមសម្រាប់ជនណាដែលបានធ្វើសង្គ្រាមប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់តាំងពីមុនមក ។ ហើយពួកគេប្រាកដជានឹងស្បថថាៈ យើងមិនចង់បានអ្វីក្រៅពីផលល្អ(ការសាងសង់ម៉ាស្ជិទនេះ)ឡើយ ។ ហើយអល់ឡោះជាអ្នកធ្វើសាក្សីថា ពិតប្រាកដណាស់ពួកគេជាពួកដែលភូតកុហក ។

لَا تَقُمْ فِيهِ أَبَدًا ۚ لَّمَسْجِدٌ أُسِّسَ عَلَى
ٱلتَّقْوَىٰ مِنْ أَوَّلِ يَوْمٍ أَحَقُّ أَن تَقُومَ فِيهِ ۚ
فِيهِ رِجَالٌ يُحِبُّونَ أَن يَتَطَهَّرُوا۟ ۚ وَٱللَّهُ يُحِبُّ
ٱلْمُطَّهِّرِينَ ﴿١٠٨﴾

១០៨-ចូរអ្នក(មូហាំម៉ាត់)កុំសឡាតក្នុងម៉ាស្ជិទនោះជាដាច់ខាត ។ តែម៉ាស្ជិទ(គូហ្បាក)ដែលត្រូវបានគេកសាងឡើងសម្រាប់ជាគ្រឹះនៃការកោតខ្លាចអល់ឡោះតាំងពីថ្ងៃដំបូង វាសក្ដិសមបំផុតដែលអ្នកត្រូវសឡាតនៅទីនោះ ។ នៅទីនោះមានបុរសជាច្រើនដែលពួកគេចូលចិត្តភាពស្អាតស្អំ ។ ហើយអល់ឡោះស្រឡាញ់បណ្ដាអ្នកដែលស្អាតស្អំ ។

أَفَمَنْ أَسَّسَ بُنْيَـٰنَهُۥ عَلَىٰ تَقْوَىٰ مِنَ
ٱللَّهِ وَرِضْوَٰنٍ خَيْرٌ أَم مَّنْ أَسَّسَ بُنْيَـٰنَهُۥ عَلَىٰ
شَفَا جُرُفٍ هَارٍ فَٱنْهَارَ بِهِۦ فِى نَارِ جَهَنَّمَ ۗ
وَٱللَّهُ لَا يَهْدِى ٱلْقَوْمَ ٱلظَّـٰلِمِينَ ﴿١٠٩﴾

១០៩-តើអ្នកដែលបានកសាងគ្រឹះនៃសំណង់(ម៉ាស្ជិទ)របស់គេ ដើម្បីជាការកោតខ្លាចអល់ឡោះ និងទទួលការយល់ព្រមពីអល់ឡោះល្អជាង ឬមួយក៏អ្នកដែលបានកសាងគ្រឹះនៃសំណង់របស់គេនៅជាប់នឹងមាត់ជ្រោះដែលចាំតែបាក់ធ្លាក់ ហើយវាក៏បានបាក់ធ្លាក់ជាមួយគេចូលទៅក្នុងនរកជើហាន់ណាំល្អជាង? ហើយអល់ឡោះមិនចង្អុលបង្ហាញដល់ពួកដែលបំពានឡើយ ។

لَا يَزَالُ بُنْيَـٰنُهُمُ ٱلَّذِى بَنَوْا۟ رِيبَةً فِى قُلُوبِهِمْ

១១០-សំណង់គ្រឹះរបស់ពួកគេ(ពួកពុតត្បុត)ដែលពួកគេបានកសាងនោះនៅតែស្ថិតក្នុងភាពស្រពេចស្រពិលនៅក្នុងចិត្តរបស់

១-ពួកអ្នកពុតត្បុតដែលអល់ឡោះបានបញ្ជាក់ប្រាប់គឺមានបីប្រភេទៈ ទីមួយពួកអ្នកដែលងប់នឹងភាពពុតត្បុត ។ ទីពីរពួកអ្នកដែលបានដឹងពីកំហុសរបស់ខ្លួនរួចសារភាពកំហុស និងទីបីពួកដែលនៅទ្រឹងនៅឡើយ ។

إِلَّآ أَن تَقَطَّعَ قُلُوبُهُمْ ۗ وَٱللَّهُ عَلِيمٌ حَكِيمٌ ﴿١١٠﴾

۞ إِنَّ ٱللَّهَ ٱشْتَرَىٰ مِنَ ٱلْمُؤْمِنِينَ
أَنفُسَهُمْ وَأَمْوَٰلَهُم بِأَنَّ لَهُمُ ٱلْجَنَّةَ ۚ
يُقَٰتِلُونَ فِى سَبِيلِ ٱللَّهِ فَيَقْتُلُونَ
وَيُقْتَلُونَ ۖ وَعْدًا عَلَيْهِ حَقًّا فِى ٱلتَّوْرَىٰةِ
وَٱلْإِنجِيلِ وَٱلْقُرْءَانِ ۚ وَمَنْ أَوْفَىٰ بِعَهْدِهِۦ
مِنَ ٱللَّهِ ۚ فَٱسْتَبْشِرُوا۟ بِبَيْعِكُمُ ٱلَّذِى بَايَعْتُم
بِهِۦ ۚ وَذَٰلِكَ هُوَ ٱلْفَوْزُ ٱلْعَظِيمُ ﴿١١١﴾
ٱلتَّٰٓئِبُونَ ٱلْعَٰبِدُونَ ٱلْحَٰمِدُونَ
ٱلسَّٰٓئِحُونَ ٱلرَّٰكِعُونَ
ٱلسَّٰجِدُونَ ٱلْءَامِرُونَ بِٱلْمَعْرُوفِ
وَٱلنَّاهُونَ عَنِ ٱلْمُنكَرِ وَٱلْحَٰفِظُونَ
لِحُدُودِ ٱللَّهِ ۗ وَبَشِّرِ ٱلْمُؤْمِنِينَ ﴿١١٢﴾
مَا كَانَ لِلنَّبِىِّ وَٱلَّذِينَ ءَامَنُوٓا۟ أَن
يَسْتَغْفِرُوا۟ لِلْمُشْرِكِينَ وَلَوْ كَانُوٓا۟ أُو۟لِى
قُرْبَىٰ مِنۢ بَعْدِ مَا تَبَيَّنَ لَهُمْ أَنَّهُمْ
أَصْحَٰبُ ٱلْجَحِيمِ ﴿١١٣﴾
وَمَا كَانَ ٱسْتِغْفَارُ إِبْرَٰهِيمَ لِأَبِيهِ إِلَّا عَن
مَّوْعِدَةٍ وَعَدَهَآ إِيَّاهُ فَلَمَّا تَبَيَّنَ لَهُۥٓ أَنَّهُۥ عَدُوٌّ
لِّلَّهِ تَبَرَّأَ مِنْهُ ۚ إِنَّ إِبْرَٰهِيمَ لَأَوَّٰهٌ حَلِيمٌ ﴿١١٤﴾

ពួកគេដដែល លុះត្រាតែចិត្តរបស់ពួកគេដាច់ខ្ទេចខ្ទីអស់(ស្លាប់)។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

១១១-ពិតប្រាកដណាស់អល់ឡោះបានទិញ(ប្តូរ)ពីបណ្តាអ្នកមានជំនឿនូវជីវិត និងទ្រព្យសម្បត្តិរបស់ពួកគេ ដោយតបស្នងឱ្យពួកគេវិញនូវឋានសួគ៌។ ពួកគេប្រយុទ្ធក្នុងមាគ៌ាអល់ឡោះដោយពួកគេសម្លាប់(សត្រូវ) ហើយពួកគេក៏ត្រូវគេសម្លាប់វិញដែរ។ នេះជាការសន្យាមួយដ៏ពិតប្រាកដពីទ្រង់ដែលមាននៅក្នុងគម្ពីរតាវរ៉ត និងគម្ពីរអ៊ីញជីល ហើយនិងគម្ពីរគួរអាន។ តើមាននរណាម្នាក់ដែលគោរពកិច្ចសន្យារបស់គេជាងអល់ឡោះនោះ? ដូច្នេះចូរពួកអ្នករីករាយនឹងការលក់ដូររបស់ពួកអ្នកដែលពួកអ្នកបានព្រមព្រៀងនឹងវាចុះ។ ហើយនោះវាជាជ័យជំនះដ៏ធំធេង។

១១២-បណ្តាអ្នកសារភាពកំហុស បណ្តាអ្នកគោរពសក្ការៈ បណ្តាអ្នកកោតសរសើរ បណ្តាអ្នកបួស បណ្តាអ្នករូកុ បណ្តាអ្នកស៊ូជូត បណ្តាអ្នកប្រើគ្នាឱ្យសាងអំពើល្អ និងបណ្តាអ្នកហាមឃាត់គ្នាអំពីទង្វើអាក្រក់ និងបណ្តាអ្នកដែលរក្សាច្បាប់របស់អល់ឡោះ។ ហើយចូរអ្នក(មូហាំម៉ាត់)ផ្តល់ដំណឹងរីករាយដល់បណ្តាអ្នកមានជំនឿទាំងនោះចុះ។

១១៣-ចំពោះណាពី និងបណ្តាអ្នកមានជំនឿពួកគេមិនត្រូវសុំអភ័យទោសឱ្យពួកមូស្ហរីគីនឡើយ ទោះបីពួកគេជាសាច់ញាតិក៏ដោយក្រោយពីអ្វីដែលបានបញ្ជាក់ច្បាស់សម្រាប់ពួកគេថា ពិតប្រាកដណាស់ពួកគេជាពួកនរកជើហ៊ីមហើយនោះ។

១១៤-ការសុំអភ័យទោសរបស់អ៊ីព្រាហ៊ីមឱ្យឪពុករបស់គេគ្មានអ្វីក្រៅពីការសន្យាដែលគេបានសន្យាចំពោះគាត់ឡើយ។ តែនៅពេលដែលគេបានដឹងច្បាស់ថា ពិតប្រាកដណាស់ គាត់ជាសត្រូវរបស់អល់ឡោះនោះ គេក៏បានចាកចេញពីគាត់។ ពិតប្រាកដណាស់អ៊ីព្រាហ៊ីមគឺជាអ្នកឱនលំទោន និងទន់ភ្លន់បំផុត។

١١٥ وَمَا كَانَ ٱللَّهُ لِيُضِلَّ قَوۡمَۢا بَعۡدَ إِذۡ هَدَىٰهُمۡ حَتَّىٰ يُبَيِّنَ لَهُم مَّا يَتَّقُونَۚ إِنَّ ٱللَّهَ بِكُلِّ شَيۡءٍ عَلِيمٌ ﴿١١٥﴾

១១៥-ហើយអល់ឡោះមិនធ្វើឱ្យក្រុមណាមួយវង្វេងក្រោយពីទ្រង់បានចង្អុលបង្ហាញពួកគេឡើយ ទាល់តែទ្រង់បញ្ជាក់ប្រាប់ពួកគេនូវអ្វីដែលពួកគេត្រូវចៀសវាង។ ពិតប្រាកដណាស់ អល់ឡោះមហាដឹងនូវអ្វីៗទាំងអស់។

إِنَّ ٱللَّهَ لَهُۥ مُلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ يُحۡيِۦ وَيُمِيتُۚ وَمَا لَكُم مِّن دُونِ ٱللَّهِ مِن وَلِيّٖ وَلَا نَصِيرٖ ﴿١١٦﴾

១១៦-ពិតប្រាកដណាស់អល់ឡោះ ទ្រង់មានអំណាចគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី។ ទ្រង់ជាអ្នកធ្វើឱ្យរស់ និងជាអ្នកធ្វើឱ្យស្លាប់។ ហើយពួកអ្នកគ្មានអ្នកគាំពារណាក្រៅពីអល់ឡោះឡើយ ហើយក៏គ្មានអ្នកជួយអន្តរាគមន៍ដែរ។

لَّقَد تَّابَ ٱللَّهُ عَلَى ٱلنَّبِيِّ وَٱلۡمُهَٰجِرِينَ وَٱلۡأَنصَارِ ٱلَّذِينَ ٱتَّبَعُوهُ فِي سَاعَةِ ٱلۡعُسۡرَةِ مِنۢ بَعۡدِ مَا كَادَ يَزِيغُ قُلُوبُ فَرِيقٖ مِّنۡهُمۡ ثُمَّ تَابَ عَلَيۡهِمۡۚ إِنَّهُۥ بِهِمۡ رَءُوفٞ رَّحِيمٞ ﴿١١٧﴾

១១៧-ជាការពិតណាស់ អល់ឡោះបានទទួលយកការសារភាពកំហុសពីណាពី(មូហាំម៉ាត់) និងបណ្តាមូហាជីរីន និងបណ្តាអាន់ស័រ ដែលពួកគេបានតាមគាត់នៅគ្រាលំបាកក្រោយពីចិត្តនៃក្រុមរបស់ពួកគេមួយស្ទើរតែងាកចេញ(ពីការពិត)ទៅហើយនោះ។ តែបន្ទាប់មកទ្រង់ក៏បានទទួលយកការសារភាពកំហុសរបស់ពួកគេវិញ។ ពិតប្រាកដណាស់ ទ្រង់មហាករុណា មហាអាណិតស្រឡាញ់ចំពោះពួកគេ។

وَعَلَى ٱلثَّلَٰثَةِ ٱلَّذِينَ خُلِّفُواْ حَتَّىٰٓ إِذَا ضَاقَتۡ عَلَيۡهِمُ ٱلۡأَرۡضُ بِمَا رَحُبَتۡ وَضَاقَتۡ عَلَيۡهِمۡ أَنفُسُهُمۡ وَظَنُّوٓاْ أَن لَّا مَلۡجَأَ مِنَ ٱللَّهِ إِلَّآ إِلَيۡهِ ثُمَّ تَابَ عَلَيۡهِمۡ لِيَتُوبُوٓاْۚ إِنَّ ٱللَّهَ هُوَ ٱلتَّوَّابُ ٱلرَّحِيمُ ﴿١١٨﴾

១១៨-ហើយ(ទ្រង់ក៏បានទទួលយកការសារភាពកំហុសផងដែរ)ទៅលើអ្នកទាំងបី[1] ដែលត្រូវគេទៅចោល រហូតដល់ផែនដីដែលមានភាពទូលំទូលាយនោះបែរជាចង្អៀតចំពោះពួកគេ ហើយចិត្តរបស់ពួកគេក៏ចង្អៀតចង្អល់ចំពោះពួកគេដែរ ហើយពួកគេដឹងយ៉ាងច្បាស់ថា គ្មានកន្លែងគេចពីអល់ឡោះឡើយ មានតែវិលទៅកាន់ទ្រង់វិញប៉ុណ្ណោះ។ បន្ទាប់មកទ្រង់បានទទួលយកការសារភាពកំហុសរបស់ពួកគេ ដើម្បីឱ្យពួកគេសារភាពកំហុស។ ពិតប្រាកដណាស់អល់ឡោះ ទ្រង់ជាអ្នកដែលទទួលយកការសារភាពកំហុស និងអាណិតស្រឡាញ់បំផុត។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ وَكُونُواْ مَعَ ٱلصَّٰدِقِينَ ﴿١١٩﴾

១១៩-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកោតខ្លាចអល់ឡោះ ហើយពួកអ្នកត្រូវស្ថិតនៅជាមួយបណ្តាអ្នកដែលទៀង

---

១- កាអាប់កូនម៉ាលិក ហ៊ីឡាលកូនអ៊ូមៃយ៉ះ និង មូររ៉ោះកូនអាល់រ៉ាព៊ែក។

ត្រង់។

១២០-ចំពោះប្រជាជននៅក្រុងម៉ាឌីណះ និងពួកអារ៉ាប់ជនបទដែលនៅជុំវិញពួកគេមិនដែលបោះបង់អ្នកនាំសាររបស់អល់ឡោះ (ពេលមានសង្គ្រាម) ឡើយ ហើយពួកគេក៏មិនស្រឡាញ់ខ្លួនរបស់ពួកគេជាងរូបគាត់(អ្នកនាំសារ) ដែរ។ ទាំងនោះគឺដោយសារតែការស្រេកទឹក និងការហត់នឿយ និងការស្រេកឃ្លានមិនបង្កផលប៉ះពាល់ដល់ពួកគេនៅក្នុងមាគ៌ារបស់អល់ឡោះ(សង្គ្រាម)។ ហើយពួកគេមិនឈានជើងទៅទីកន្លែងណាដែលធ្វើឱ្យពួកប្រឆាំងមានកំហឹងឡើយ ហើយក៏មិនដែលជួបប្រទះភាពគ្រោះថ្នាក់អ្វីពីសត្រូវដែរ។ ផ្ទុយទៅវិញត្រូវបានគេកត់ត្រាសម្រាប់ពួកគេនូវអំពើល្អដោយសារប្រការទាំងនេះ។ ពិតប្រាកដណាស់ អល់ឡោះពិតជាមិនបំបាត់ផលបុណ្យរបស់បណ្ដាអ្នកសាងអំពើល្អឡើយ។

១២១-ហើយទោះបីជាពួកគេបរិច្ចាគទ្រព្យសម្បត្តិតិចក្ដី ឬច្រើនក្ដី ហើយទោះបីជាពួកគេឆ្លងកាត់ជ្រលងភ្នំណាមួយក៏ដោយ គឺសុទ្ធតែត្រូវបានកត់ត្រាសម្រាប់ពួកគេ ដើម្បីអល់ឡោះនឹងតបស្នងដល់ពួកគេដ៏ប្រសើរបំផុតនូវអ្វីដែលពួកគេបានប្រព្រឹត្ត។

១២២-ហើយបណ្ដាអ្នកដែលមានជំនឿ គឺមិនត្រូវចេញទៅធ្វើសង្គ្រាមទាំងអស់គ្នានោះទេ។ ដូច្នេះ ហេតុអ្វីបានជារាល់កុលសម្ព័ន្ធក្នុងចំណោមពួកគេមិនមានក្រុមណាមួយចេញទៅដើម្បីស្វែងយល់ពីសាសនា និងដើម្បីក្រើនរំលឹកដល់ក្រុមរបស់ពួកគេពេលដែលពួកគេត្រឡប់មករកក្រុមរបស់ពួកគេវិញ។ សង្ឃឹមថាពួកគេនឹងកោតខ្លាច។

១២៣-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកប្រយុទ្ធនឹងពួកគ្មានជំនឿដែលនៅជិតពួកអ្នកបំផុតចុះ ហើយត្រូវបង្ហាញឱ្យពួកគេឃើញនូវភាពខ្លាំងក្លារបស់ពួកអ្នក។ ពួកអ្នកត្រូវដឹងថា ពិតប្រាកដណាស់ អល់ឡោះនៅជាមួយបណ្ដាអ្នកដែលកោតខ្លាច។

១២៤-ហើយនៅពេលដែលមានជំពូកណាមួយ(ក្នុងគម្ពីរ

مَا كَانَ لِأَهۡلِ ٱلۡمَدِينَةِ وَمَنۡ حَوۡلَهُم مِّنَ
ٱلۡأَعۡرَابِ أَن يَتَخَلَّفُواْ عَن رَّسُولِ ٱللَّهِ وَلَا
يَرۡغَبُواْ بِأَنفُسِهِمۡ عَن نَّفۡسِهِۦۚ ذَٰلِكَ بِأَنَّهُمۡ
لَا يُصِيبُهُمۡ ظَمَأٞ وَلَا نَصَبٞ وَلَا مَخۡمَصَةٞ فِي
سَبِيلِ ٱللَّهِ وَلَا يَطَـُٔونَ مَوۡطِئٗا يَغِيظُ
ٱلۡكُفَّارَ وَلَا يَنَالُونَ مِنۡ عَدُوّٖ نَّيۡلًا إِلَّا
كُتِبَ لَهُم بِهِۦ عَمَلٞ صَٰلِحٌۚ إِنَّ ٱللَّهَ لَا
يُضِيعُ أَجۡرَ ٱلۡمُحۡسِنِينَ ١٢٠

وَلَا يُنفِقُونَ نَفَقَةٗ صَغِيرَةٗ وَلَا كَبِيرَةٗ
وَلَا يَقۡطَعُونَ وَادِيًا إِلَّا كُتِبَ لَهُمۡ
لِيَجۡزِيَهُمُ ٱللَّهُ أَحۡسَنَ مَا كَانُواْ
يَعۡمَلُونَ ١٢١

۞ وَمَا كَانَ ٱلۡمُؤۡمِنُونَ لِيَنفِرُواْ كَآفَّةٗۚ
فَلَوۡلَا نَفَرَ مِن كُلِّ فِرۡقَةٖ مِّنۡهُمۡ طَآئِفَةٞ
لِّيَتَفَقَّهُواْ فِي ٱلدِّينِ وَلِيُنذِرُواْ قَوۡمَهُمۡ إِذَا
رَجَعُوٓاْ إِلَيۡهِمۡ لَعَلَّهُمۡ يَحۡذَرُونَ ١٢٢

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ قَٰتِلُواْ ٱلَّذِينَ يَلُونَكُم
مِّنَ ٱلۡكُفَّارِ وَلۡيَجِدُواْ فِيكُمۡ غِلۡظَةٗۚ
وَٱعۡلَمُوٓاْ أَنَّ ٱللَّهَ مَعَ ٱلۡمُتَّقِينَ ١٢٣

وَإِذَا مَآ أُنزِلَتۡ سُورَةٞ فَمِنۡهُم مَّن يَقُولُ

أَيُّكُمۡ زَادَتۡهُ هَٰذِهِۦٓ إِيمَٰنٗاۚ فَأَمَّا ٱلَّذِينَ
ءَامَنُواْ فَزَادَتۡهُمۡ إِيمَٰنٗا وَهُمۡ يَسۡتَبۡشِرُونَ ١٢٤

គួរអាន) ត្រូវបានគេបញ្ចុះមកនោះ ក្នុងចំណោមពួកគេ(ពួកពុតត្បុត) មានអ្នកខ្លះនិយាយថា: តើមានអ្នកណាក្នុងចំណោមពួកអ្នកដែលវា(ជំពូក)នេះធ្វើឱ្យគេកាន់តែមានជំនឿនោះ? ចំណែកឯបណ្ដាអ្នកដែលមានជំនឿ គឺវាបានធ្វើឱ្យពួកគេកាន់តែមានជំនឿ ហើយពួកគេសប្បាយរីករាយ ។

وَأَمَّا ٱلَّذِينَ فِي قُلُوبِهِم مَّرَضٞ فَزَادَتۡهُمۡ
رِجۡسًا إِلَىٰ رِجۡسِهِمۡ وَمَاتُواْ وَهُمۡ
كَٰفِرُونَ ١٢٥

១២៥-ហើយចំណែកឯពួកដែលនៅក្នុងចិត្តរបស់ពួកគេមានជំងឺ(ពុតត្បុត)វិញនោះ វា(ជំពូក) បានធ្វើឱ្យពួកគេកាន់តែគ្មានជំនឿលើភាពគ្មានជំនឿរបស់ពួកគេថែមទៀត ហើយពួកគេបានស្លាប់ក្នុងពេលដែលពួកគេជាពួកគ្មានជំនឿ ។

أَوَلَا يَرَوۡنَ أَنَّهُمۡ يُفۡتَنُونَ فِي كُلِّ عَامٖ
مَّرَّةً أَوۡ مَرَّتَيۡنِ ثُمَّ لَا يَتُوبُونَ وَلَا هُمۡ
يَذَّكَّرُونَ ١٢٦

១២៦-តើពួកគេមិនឃើញទេឬថា ពិតប្រាកដណាស់ ពួកគេត្រូវបានគេសាកល្បង(ផ្ដល់គ្រោះថ្នាក់) រាល់ៗឆ្នាំចំនួនមួយដង ឬពីរដង ក្រោយមកពួកគេនៅតែមិនសារភាពកំហុស ហើយពួកគេក៏មិនទទួលយកការក្រើនរំលឹកដែរនោះ?

وَإِذَا مَآ أُنزِلَتۡ سُورَةٞ نَّظَرَ بَعۡضُهُمۡ إِلَىٰ بَعۡضٍ
هَلۡ يَرَىٰكُم مِّنۡ أَحَدٖ ثُمَّ ٱنصَرَفُواْۚ
صَرَفَ ٱللَّهُ قُلُوبَهُم بِأَنَّهُمۡ قَوۡمٞ لَّا
يَفۡقَهُونَ ١٢٧

១២៧-ហើយនៅពេលដែលជំពូកណាមួយត្រូវបានគេបញ្ចុះមកនោះ ពួកគេ(ពួកពុតត្បុត) មួយចំនួនបានក្រឡេកមើលគ្នាទៅវិញទៅមក(រួចក៏និយាយថា) តើមាននរណាម្នាក់មើលឃើញពួកអ្នកដែរឬទេ? បន្ទាប់មកពួកគេក៏បានចាកចេញ ។ អល់ឡោះក៏បានបង្វែរចិត្តរបស់ពួកគេដោយសារតែពួកគេជាក្រុមដែលគ្មានការយល់ដឹង ។

لَقَدۡ جَآءَكُمۡ رَسُولٞ مِّنۡ أَنفُسِكُمۡ
عَزِيزٌ عَلَيۡهِ مَا عَنِتُّمۡ حَرِيصٌ عَلَيۡكُم
بِٱلۡمُؤۡمِنِينَ رَءُوفٞ رَّحِيمٞ ١٢٨

១២៨-ជាការពិតណាស់ អ្នកនាំសារម្នាក់(មូហាំម៉ាត់) ចេញពីពូជពង្សរបស់ពួកអ្នកបានមកដល់ពួកអ្នក ។ គាត់ជាអ្នកទទួលរងការលំបាកនូវអ្វីដែលពួកអ្នកបានទទួលរងការលំបាកនោះ ។ គាត់ជាអ្នកចង់បាន(នូវប្រការល្អ)ដល់ពួកអ្នក និងជាអ្នកមេត្តាករុណាអាណិតស្រឡាញ់ដល់បណ្ដាអ្នកដែលមានជំនឿ ។

فَإِن تَوَلَّوۡاْ فَقُلۡ حَسۡبِيَ ٱللَّهُ لَآ إِلَٰهَ إِلَّا
هُوَۖ عَلَيۡهِ تَوَكَّلۡتُۖ وَهُوَ رَبُّ ٱلۡعَرۡشِ
ٱلۡعَظِيمِ ١٢٩

១២៩-ហើយប្រសិនបើពួកគេ(ពួកពុតត្បុត) បានបែរចេញវិញនោះ ចូរអ្នក(មូហាំម៉ាត់) ពោលថា: អល់ឡោះតែមួយគត់គឺគ្រប់គ្រាន់សម្រាប់ខ្ញុំ ។ គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ ចំពោះទ្រង់តែមួយគត់ដែលខ្ញុំបាន

ប្រគល់ការទុកចិត្ត ហើយទ្រង់គឺជាម្ចាស់នៃអារ៉ស្ហដ៏ធំធេង។

سورة يونس

## ជំពូកយូនូស

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់។

الٓرۚ تِلۡكَ ءَايَٰتُ ٱلۡكِتَٰبِ ٱلۡحَكِيمِ ١

១-អាលីហ្វ ឡាម រ៉។ ទាំងនេះគឺជាបណ្ដាអាយ៉ាត់ៗនៃគម្ពីរគួរអានដែលប្រកបដោយគតិបណ្ឌិត។

أَكَانَ لِلنَّاسِ عَجَبًا أَنۡ أَوۡحَيۡنَآ إِلَىٰ رَجُلٖ مِّنۡهُمۡ أَنۡ أَنذِرِ ٱلنَّاسَ وَبَشِّرِ ٱلَّذِينَ ءَامَنُوٓاْ أَنَّ لَهُمۡ قَدَمَ صِدۡقٍ عِندَ رَبِّهِمۡۗ قَالَ ٱلۡكَٰفِرُونَ إِنَّ هَٰذَا لَسَٰحِرٞ مُّبِينٌ ٢

២-តើវាជាការភ្ញាក់ផ្អើលសម្រាប់មនុស្សលោកឬ ដែលយើងបានផ្ដល់វ៉ាហ៊ីទៅឱ្យបុរសម្នាក់(មូហាំម៉ាត់)ក្នុងចំណោមពួកគេ (ដោយយើងមានបន្ទូលថា) ចូរអ្នកដាស់តឿនព្រមានមនុស្សលោក និងផ្ដល់ដំណឹងរីករាយដល់បណ្ដាអ្នកដែលមានជំនឿថា ពិតប្រាកដណាស់ ពួកគេនឹងទទួលបានផលបុណ្យពីម្ចាស់របស់ពួកគេនោះ? ពួកដែលគ្មានជំនឿបាននិយាយថាៈ ពិតប្រាកដណាស់ នេះ(មូហាំម៉ាត់) គឺជាអ្នកមន្ដអាគមយ៉ាងច្បាស់លាស់។

إِنَّ رَبَّكُمُ ٱللَّهُ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ فِي سِتَّةِ أَيَّامٖ ثُمَّ ٱسۡتَوَىٰ عَلَى ٱلۡعَرۡشِۖ يُدَبِّرُ ٱلۡأَمۡرَۖ مَا مِن شَفِيعٍ إِلَّا مِنۢ بَعۡدِ إِذۡنِهِۦۚ ذَٰلِكُمُ ٱللَّهُ رَبُّكُمۡ فَٱعۡبُدُوهُۚ أَفَلَا تَذَكَّرُونَ ٣

៣-ពិតប្រាកដណាស់ ម្ចាស់របស់ពួកអ្នក គឺអល់ឡោះដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដីក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់បាននៅលើអារ៉ស្ហ។ ទ្រង់ជាអ្នកចាត់ចែងគ្រប់កិច្ចការទាំងអស់។ គ្មានការអន្ដរាគមន៍ណាមួយឡើយ លើកលែងតែបន្ទាប់ពីមានការអនុញ្ញាតពីទ្រង់ប៉ុណ្ណោះ។ នោះហើយគឺអល់ឡោះដែលជាម្ចាស់របស់ពួកអ្នក ហេតុនេះចូរពួកអ្នកគោរពសក្ការៈចំពោះទ្រង់។ ដូច្នេះ តើពួកអ្នកមិនសញ្ជឹងគិតទេឬ?

إِلَيۡهِ مَرۡجِعُكُمۡ جَمِيعٗاۖ وَعۡدَ ٱللَّهِ حَقًّاۚ إِنَّهُۥ يَبۡدَؤُاْ ٱلۡخَلۡقَ ثُمَّ يُعِيدُهُۥ لِيَجۡزِيَ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ بِٱلۡقِسۡطِۚ وَٱلَّذِينَ كَفَرُواْ لَهُمۡ شَرَابٞ مِّنۡ حَمِيمٖ وَعَذَابٌ أَلِيمُۢ بِمَا كَانُواْ يَكۡفُرُونَ ٤

៤-ចំពោះទ្រង់តែមួយគត់ដែលជាកន្លែងវិលត្រឡប់របស់ពួកអ្នកទាំងអស់គ្នា។ ការសន្យារបស់អល់ឡោះ គឺជាការពិត។ ពិតប្រាកដណាស់ ទ្រង់ជាអ្នកផ្ដើមបង្កើតអ្វីៗទាំងអស់ ក្រោយមកទ្រង់នឹងធ្វើឱ្យរស់ឡើងវិញ(បន្ទាប់ពីស្លាប់)ដើម្បីទ្រង់នឹងតបស្នងដល់បណ្ដាអ្នកដែលបានជឿ និងបណ្ដាអ្នកដែលបានធ្វើល្អដោយយុត្តិធម៌។ ចំណែកពួកដែលគ្មានជំនឿ ពួកគេនឹងផឹកទឹកដែលកំពុងពុះ និងទទួលទារុណកម្មយ៉ាងឈឺចាប់ដោយសារតែពួកគេធ្លាប់ប្រឆាំង។

هُوَ ٱلَّذِي جَعَلَ ٱلشَّمۡسَ ضِيَآءٗ وَٱلۡقَمَرَ

៥-ទ្រង់គឺជាអ្នកដែលបានបង្កើតព្រះអាទិត្យឱ្យមានពន្លឺបង្កើត

ព្រះច័ន្ទឱ្យមានរស្មី និងបានកំណត់ឱ្យព្រះច័ន្ទនូវទីតាំងជាច្រើន ដើម្បីឱ្យពួកអ្នកដឹងពីចំនួនឆ្នាំ និងការគណនា(ពេលវេលា)។ អល់ឡោះពិតជាបានបង្កើតអ្វីៗទាំងអស់នោះដោយពិតប្រាកដ។ ទ្រង់បញ្ជាក់នូវភស្តុតាងជាច្រើនសម្រាប់ក្រុមដែលចេះដឹង។

៦-ពិតប្រាកដណាស់ ភាពខុសគ្នារវាងយប់ និងថ្ងៃ និងអ្វីៗដែលអល់ឡោះបានបង្កើតនៅលើមេឃជាច្រើនជាន់ និងផែនដី គឺជាភស្តុតាងសម្រាប់ក្រុមដែលកោតខ្លាចអល់ឡោះ។

៧-ពិតប្រាកដណាស់ ពួកដែលមិនសង្ឃឹមថា នឹងជួបជាមួយយើង ហើយពួកគេពេញចិត្តនឹងការរស់នៅក្នុងលោកិយនេះ ថែមទាំងពួកគេស្ងប់ចិត្តនឹងវា និងពួកដែលព្រងើយកន្តើយនឹងអាយ៉ាត់ៗរបស់យើង។

៨-ពួកទាំងនោះ កន្លែងស្នាក់នៅរបស់ពួកគេគឺឋាននរក ដោយសារតែអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត។

៩-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿនិងបានសាងអំពើល្អត្រឹមត្រូវ ម្ចាស់របស់ពួកគេនឹងចង្អុលបង្ហាញដល់ពួកគេដោយសារតែជំនឿរបស់ពួកគេ។ មានទន្លេជាច្រើនហូរពីក្រោមពួកគេនៅក្នុងឋានសួគ៌ដ៏សែនរីករាយ។

១០-ការបួងសួងសុំរបស់ពួកគេនៅក្នុងនោះ(ឋានសួគ៌)ថាៈ ឱអល់ឡោះ! ទ្រង់ដ៏មហាបរិសុទ្ធ និងពាក្យគោរពស្វាគមន៍របស់ពួកគេនៅទីនោះគឺភាពសុខសាន្ត ហើយនៅចុងបញ្ចប់នៃការបួងសួងសុំរបស់ពួកគេថាៈ រាល់ការសរសើរគឺចំពោះអល់ឡោះជាម្ចាស់នៃពិភពទាំងអស់។

១១-ហើយប្រសិនបើអល់ឡោះឆាប់ផ្តល់ឱ្យមនុស្សនូវប្រការអាក្រក់(តាមការបួងសួងសុំរបស់ពួកគេ) ដូចដែលពួកគេចង់ឱ្យទ្រង់ឆាប់ផ្តល់ឱ្យពួកគេ(តាមការបួងសួង)នូវប្រការល្អនោះ ពេលកំណត់ជីវិតរបស់ពួកគេពិតជានឹងត្រូវបានគេបញ្ចប់(ពួកគេនឹងត្រូវ

نُورًا وَقَدَّرَهُۥ مَنَازِلَ لِتَعۡلَمُواْ عَدَدَ ٱلسِّنِينَ وَٱلۡحِسَابَۚ مَا خَلَقَ ٱللَّهُ ذَٰلِكَ إِلَّا بِٱلۡحَقِّۚ يُفَصِّلُ ٱلۡأٓيَٰتِ لِقَوۡمٖ يَعۡلَمُونَ ۝٥

إِنَّ فِي ٱخۡتِلَٰفِ ٱلَّيۡلِ وَٱلنَّهَارِ وَمَا خَلَقَ ٱللَّهُ فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ لَأٓيَٰتٖ لِّقَوۡمٖ يَتَّقُونَ ۝٦

إِنَّ ٱلَّذِينَ لَا يَرۡجُونَ لِقَآءَنَا وَرَضُواْ بِٱلۡحَيَوٰةِ ٱلدُّنۡيَا وَٱطۡمَأَنُّواْ بِهَا وَٱلَّذِينَ هُمۡ عَنۡ ءَايَٰتِنَا غَٰفِلُونَ ۝٧

أُوْلَٰٓئِكَ مَأۡوَىٰهُمُ ٱلنَّارُ بِمَا كَانُواْ يَكۡسِبُونَ ۝٨

إِنَّ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ يَهۡدِيهِمۡ رَبُّهُم بِإِيمَٰنِهِمۡۖ تَجۡرِي مِن تَحۡتِهِمُ ٱلۡأَنۡهَٰرُ فِي جَنَّٰتِ ٱلنَّعِيمِ ۝٩

دَعۡوَىٰهُمۡ فِيهَا سُبۡحَٰنَكَ ٱللَّهُمَّ وَتَحِيَّتُهُمۡ فِيهَا سَلَٰمٞۚ وَءَاخِرُ دَعۡوَىٰهُمۡ أَنِ ٱلۡحَمۡدُ لِلَّهِ رَبِّ ٱلۡعَٰلَمِينَ ۝١٠

۞وَلَوۡ يُعَجِّلُ ٱللَّهُ لِلنَّاسِ ٱلشَّرَّ ٱسۡتِعۡجَالَهُم بِٱلۡخَيۡرِ لَقُضِيَ إِلَيۡهِمۡ أَجَلُهُمۡۖ فَنَذَرُ ٱلَّذِينَ لَا يَرۡجُونَ لِقَآءَنَا فِي طُغۡيَٰنِهِمۡ

វិនាស)។ ដូច្នេះយើងបានទុកឱ្យពួកអ្នកដែលមិនសង្ឃឹមថា នឹងជួបយើងឱ្យស្ថិតនៅក្នុងភាពវង្វេងខុសឆ្គងរបស់ពួកគេដោយពួកគេស្រពេចស្រពិល។

១២-ហើយនៅពេលដែលមានគ្រោះអ្វីមួយបានប៉ះពាល់ដល់មនុស្ស គេបានបួងសួងសុំពីយើងដោយដេកផ្អៀង ឬអង្គុយ ឬឈរ ប៉ុន្តែនៅពេលដែលយើងបានបំបាត់គ្រោះនោះពីគេ គេក៏បន្ត(ធ្វើដូចដើម)ហាក់បីដូចជាគេមិនបានបួងសួងសុំពីយើងឱ្យជួយបំបាត់គ្រោះដែលបានប៉ះពាល់គេអញ្ចឹង។ ដូច្នោះដែរ គេបានលំអសម្រាប់ពួកដែលបំពាននូវអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត។

១៣-ហើយពិតប្រាកដណាស់ យើងបានបំផ្លាញជាច្រើនជំនាន់មកហើយមុនពួកអ្នក ពេលដែលពួកគេបានបំពានខណៈដែលបណ្ដាអ្នកនាំសាររបស់ពួកគេបាននាំមកដល់ពួកគេនូវភស្តុតាងយ៉ាងច្បាស់លាស់ជាច្រើន ប៉ុន្តែពួកគេពិតជាមិនបានជឿឡើយ។ ដូច្នោះដែរ យើងតបស្នងចំពោះអ្នកដែលប្រព្រឹត្តអំពើអាក្រក់។

១៤-ក្រោយមកយើងបានបង្កើតពួកអ្នកឱ្យបន្តវេននៅលើផែនដីបន្ទាប់ពីពួកគេ ដើម្បីយើងនឹងមើលថា តើពួកអ្នកនឹងធ្វើដូចម្ដេច?

១៥-ហើយនៅពេលដែលគេសូត្រអាយ៉ាត់ៗរបស់យើងដ៏ជាក់ច្បាស់ទៅលើពួកគេ ពួកដែលមិនសង្ឃឹមថានឹងជួបយើងបាននិយាយថាៈ ចូរអ្នក(មូហាំម៉ាត់)នាំមកនូវគម្ពីរគួរអានផ្សេងពីនេះ ឬផ្លាស់ប្ដូរវាទៅ។ ចូរអ្នកតបវិញថាៈ ខ្ញុំគ្មានសិទ្ធិក្នុងការផ្លាស់ប្ដូរវាតាមចំណង់ចិត្តរបស់ខ្ញុំនោះឡើយ។ ពិតប្រាកដណាស់ ខ្ញុំខ្លាចទារុណកម្មនាថ្ងៃដ៏ធំធេង បើខ្ញុំល្មើសនឹងបទបញ្ជានៃម្ចាស់របស់ខ្ញុំនោះ។

១៦-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ប្រសិនបើអល់ឡោះមានចេតនា(មិនឱ្យខ្ញុំសូត្រគម្ពីរគួរអាន) ខ្ញុំក៏មិនបានសូត្រវាឱ្យពួកអ្នកស្ដាប់ដែរ ហើយទ្រង់ក៏មិនបានធ្វើឱ្យពួកអ្នកដឹងអំពីវាដែរ។ ពិត

يَعْمَهُونَ ﴿١١﴾

وَإِذَا مَسَّ ٱلْإِنسَـٰنَ ٱلضُّرُّ دَعَانَا لِجَنۢبِهِۦٓ أَوْ قَاعِدًا أَوْ قَآئِمًا فَلَمَّا كَشَفْنَا عَنْهُ ضُرَّهُۥ مَرَّ كَأَن لَّمْ يَدْعُنَآ إِلَىٰ ضُرٍّ مَّسَّهُۥ ۚ كَذَٰلِكَ زُيِّنَ لِلْمُسْرِفِينَ مَا كَانُوا۟ يَعْمَلُونَ ﴿١٢﴾

وَلَقَدْ أَهْلَكْنَا ٱلْقُرُونَ مِن قَبْلِكُمْ لَمَّا ظَلَمُوا۟ ۙ وَجَآءَتْهُمْ رُسُلُهُم بِٱلْبَيِّنَـٰتِ وَمَا كَانُوا۟ لِيُؤْمِنُوا۟ ۚ كَذَٰلِكَ نَجْزِى ٱلْقَوْمَ ٱلْمُجْرِمِينَ ﴿١٣﴾

ثُمَّ جَعَلْنَـٰكُمْ خَلَـٰٓئِفَ فِى ٱلْأَرْضِ مِنۢ بَعْدِهِمْ لِنَنظُرَ كَيْفَ تَعْمَلُونَ ﴿١٤﴾

وَإِذَا تُتْلَىٰ عَلَيْهِمْ ءَايَاتُنَا بَيِّنَـٰتٍ ۙ قَالَ ٱلَّذِينَ لَا يَرْجُونَ لِقَآءَنَا ٱئْتِ بِقُرْءَانٍ غَيْرِ هَـٰذَآ أَوْ بَدِّلْهُ ۚ قُلْ مَا يَكُونُ لِىٓ أَنْ أُبَدِّلَهُۥ مِن تِلْقَآئِ نَفْسِىٓ ۖ إِنْ أَتَّبِعُ إِلَّا مَا يُوحَىٰٓ إِلَىَّ ۖ إِنِّىٓ أَخَافُ إِنْ عَصَيْتُ رَبِّى عَذَابَ يَوْمٍ عَظِيمٍ ﴿١٥﴾

قُل لَّوْ شَآءَ ٱللَّهُ مَا تَلَوْتُهُۥ عَلَيْكُمْ وَلَآ أَدْرَىٰكُم بِهِۦ ۖ فَقَدْ لَبِثْتُ فِيكُمْ عُمُرًا مِّن

قَبْلِهِۦٓ ۚ أَفَلَا تَعْقِلُونَ ﴿١٦﴾

ប្រាកដណាស់ ខ្ញុំបានរស់នៅក្នុងចំណោមពួកអ្នកអស់មួយរយៈកាលដែរមុនវា(មុនពេលគេបញ្ចុះវាហ៊ី) ។ តើពួកអ្នកមិនពិចារណាទេឬ?

فَمَنْ أَظْلَمُ مِمَّنِ ٱفْتَرَىٰ عَلَى ٱللَّهِ كَذِبًا أَوْ كَذَّبَ بِـَٔايَٰتِهِۦٓ ۚ إِنَّهُۥ لَا يُفْلِحُ ٱلْمُجْرِمُونَ ﴿١٧﴾

១៧-ដូច្នេះ គ្មានអ្នកណាម្នាក់ដែលបំពានជាងអ្នកដែលប្រឌិតការភូតកុហកលើអល់ឡោះ ឬបដិសេធនឹងអាយ៉ាត់ៗរបស់ទ្រង់នោះឡើយ ។ ជាការពិតណាស់ ពួកដែលប្រព្រឹត្តអំពើអាក្រក់នឹងមិនទទួលបានជោគជ័យឡើយ ។

وَيَعْبُدُونَ مِن دُونِ ٱللَّهِ مَا لَا يَضُرُّهُمْ وَلَا يَنفَعُهُمْ وَيَقُولُونَ هَٰٓؤُلَآءِ شُفَعَٰٓؤُنَا عِندَ ٱللَّهِ ۚ قُلْ أَتُنَبِّـُٔونَ ٱللَّهَ بِمَا لَا يَعْلَمُ فِى ٱلسَّمَٰوَٰتِ وَلَا فِى ٱلْأَرْضِ ۚ سُبْحَٰنَهُۥ وَتَعَٰلَىٰ عَمَّا يُشْرِكُونَ ﴿١٨﴾

១៨-ពួកគេគោរពសក្ការៈផ្សេងពីអល់ឡោះដែលវាមិនអាចផ្តល់គ្រោះថ្នាក់ ឬផ្តល់ផលប្រយោជន៍ដល់ពួកគេ ហើយពួកគេនិយាយថាៈ ពួកវាទាំងនេះជាអ្នកជួយអន្តរាគមន៍ដល់ពួកយើងនៅចំពោះមុខអល់ឡោះ ។ ចូរអ្នក(មូហាំម៉ាត់)តបថាៈ តើពួកអ្នកកំពុងតែប្រាប់អល់ឡោះអំពីអ្វីដែល(ពួកអ្នកគិតថា)ទ្រង់មិនដឹងទាំងនៅលើមេឃជាច្រើនជាន់ និងផែនដីឬ? ទ្រង់មហាបរិសុទ្ធ និងខ្ពង់ខ្ពស់អំពីអ្វីដែលពួកគេកំពុងធ្វើស្ហ៊ីរិកនោះ ។

وَمَا كَانَ ٱلنَّاسُ إِلَّآ أُمَّةً وَٰحِدَةً فَٱخْتَلَفُوا۟ ۚ وَلَوْلَا كَلِمَةٌ سَبَقَتْ مِن رَّبِّكَ لَقُضِىَ بَيْنَهُمْ فِيمَا فِيهِ يَخْتَلِفُونَ ﴿١٩﴾

១៩-មនុស្សលោកកាលពីមុន គឺជាប្រជាជាតិតែមួយ(សាសនាអ៊ីស្លាមតែមួយ) តែក្រោយមកពួកគេបានខ្វែងគំនិតគ្នា ។ ហើយប្រសិនបើគ្មានពាក្យពេចន៍កំណត់ណាមួយពីមុនមកពីម្ចាស់របស់អ្នកទេនោះ គេពិតជានឹងកាត់សេចក្តីរវាងពួកទាំងនោះដោយសារតែអ្វីដែលពួកគេកំពុងខ្វែងគំនិតគ្នាក្នុងរឿងនោះ ។

وَيَقُولُونَ لَوْلَآ أُنزِلَ عَلَيْهِ ءَايَةٌ مِّن رَّبِّهِۦ ۖ فَقُلْ إِنَّمَا ٱلْغَيْبُ لِلَّهِ فَٱنتَظِرُوٓا۟ إِنِّى مَعَكُم مِّنَ ٱلْمُنتَظِرِينَ ﴿٢٠﴾

២០-ហើយពួកគេ(ពួកគ្មានជំនឿ)និយាយថាៈ ហេតុអ្វីបានជាគេមិនបានបញ្ចុះឱ្យគេ(មូហាំម៉ាត់)នូវភស្តុតាងណាមួយពីម្ចាស់របស់គេ? ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)តបវិញថាៈ ពិតប្រាកដណាស់ ប្រការអាថ៌កំបាំងគឺសម្រាប់អល់ឡោះតែមួយគត់ ដូច្នេះ ចូរពួកអ្នករង់ចាំ(ការកាត់ក្តីពីទ្រង់)ចុះ ពិតប្រាកដណាស់ ខ្ញុំក៏ស្ថិតក្នុងចំណោមអ្នកដែលរង់ចាំមើលជាមួយពួកអ្នកដែរ ។

وَإِذَآ أَذَقْنَا ٱلنَّاسَ رَحْمَةً مِّنۢ بَعْدِ ضَرَّآءَ مَسَّتْهُمْ إِذَا لَهُم مَّكْرٌ فِىٓ ءَايَاتِنَا ۚ قُلِ ٱللَّهُ أَسْرَعُ مَكْرًا ۚ إِنَّ رُسُلَنَا يَكْتُبُونَ مَا

២១-នៅពេលដែលយើងបានឱ្យមនុស្សលោក(ពួកមូស្ហរីគីន)ស្គាល់រសជាតិនៃក្តីមេត្តាករុណា(ភាពសុខសាន្ត)បន្ទាប់ពីគ្រោះផ្សេងៗបានកើតឡើងចំពោះពួកគេ ស្រាប់តែពួកគេមានល្បិចកលប្រឆាំងនឹងភស្តុតាងរបស់យើងទៅវិញ ។ ចូរអ្នក(មូហាំម៉ាត់)ពោល

تَمۡكُرُونَ ٢١

ថា: អល់ឡោះគឺជាអ្នកតបឧបាយកលដ៏លឿនបំផុត ។ ពិតប្រាកដណាស់ បណ្ដាម៉ាឡាអ៊ីកាត់របស់យើងកំពុងតែកត់ត្រានូវអ្វីដែលពួកគេកំពុងប្រើឧបាយកលនោះ ។

هُوَ ٱلَّذِي يُسَيِّرُكُمۡ فِي ٱلۡبَرِّ وَٱلۡبَحۡرِۖ حَتَّىٰٓ إِذَا
كُنتُمۡ فِي ٱلۡفُلۡكِ وَجَرَيۡنَ بِهِم بِرِيحٖ طَيِّبَةٖ
وَفَرِحُواْ بِهَا جَآءَتۡهَا رِيحٌ عَاصِفٞ وَجَآءَهُمُ
ٱلۡمَوۡجُ مِن كُلِّ مَكَانٖ وَظَنُّوٓاْ أَنَّهُمۡ أُحِيطَ
بِهِمۡ دَعَوُاْ ٱللَّهَ مُخۡلِصِينَ لَهُ ٱلدِّينَ لَئِنۡ أَنجَيۡتَنَا
مِنۡ هَٰذِهِۦ لَنَكُونَنَّ مِنَ ٱلشَّٰكِرِينَ ٢٢

២២-ទ្រង់គឺជាអ្នកដែលសំរួលដល់ការធ្វើដំណើររបស់ពួកអ្នកទាំងនៅលើគោកនិងសមុទ្រ ។ លុះដល់ពេលដែលពួកអ្នកបានស្ថិតនៅក្នុងនាវា វាក៏នាំពួកគេចេញដំណើរដោយខ្យល់ដ៏ល្អ ហើយពួកគេបានសប្បាយរីករាយនឹងវា ( ពេលនោះ) ស្រាប់តែមានខ្យល់ព្យុះយ៉ាងខ្លាំងបានមកដល់វា ហើយរលកក៏បានមកដល់ពួកគេពីគ្រប់ទិសទីដែរ ហើយពួកគេបានគិតថា: ពិតប្រាកដណាស់ ពួកគេត្រូវឡោមព័ទ្ធ( ដោយក្ដីវិនាស) ខណៈនោះពួកគេក៏បានបួងសួងសុំពីអល់ឡោះដោយចិត្តស្មោះសក្នុងការប្រណិបតិន៍ចំពោះទ្រង់ថា: ប្រសិនបើទ្រង់ជួយសង្គ្រោះពួកយើងពីគ្រោះមហន្តរាយនេះ ពួកយើងពិតជានឹងស្ថិតក្នុងចំណោមអ្នកដែលដឹងគុណជាមិនខាន ។

فَلَمَّآ أَنجَىٰهُمۡ إِذَا هُمۡ يَبۡغُونَ فِي ٱلۡأَرۡضِ بِغَيۡرِ
ٱلۡحَقِّۗ يَٰٓأَيُّهَا ٱلنَّاسُ إِنَّمَا بَغۡيُكُمۡ عَلَىٰٓ
أَنفُسِكُمۖ مَّتَٰعَ ٱلۡحَيَوٰةِ ٱلدُّنۡيَاۖ ثُمَّ
إِلَيۡنَا مَرۡجِعُكُمۡ فَنُنَبِّئُكُم بِمَا كُنتُمۡ
تَعۡمَلُونَ ٢٣

២៣-ហើយនៅពេលដែលទ្រង់បានជួយសង្គ្រោះពួកគេ ស្រាប់តែពួកគេបែរជាបំពាននៅលើផែនដីដោយអយុត្តិធម៌ទៅវិញ ។ ឱមនុស្សលោក! ជាការពិតណាស់ ការបំពានរបស់ពួកអ្នកនឹងធ្លាក់លើខ្លួនពួកអ្នកវិញ ។ វាគ្រាន់តែជាក្ដីរីករាយនៃជីវិតលោកិយប៉ុណ្ណោះ ។ តែក្រោយមកចំពោះយើងគឺជាកន្លែងវិលត្រឡប់របស់ពួកអ្នក ហើយយើងនឹងប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកបានសាង ។

إِنَّمَا مَثَلُ ٱلۡحَيَوٰةِ ٱلدُّنۡيَا كَمَآءٍ أَنزَلۡنَٰهُ مِنَ
ٱلسَّمَآءِ فَٱخۡتَلَطَ بِهِۦ نَبَاتُ ٱلۡأَرۡضِ مِمَّا
يَأۡكُلُ ٱلنَّاسُ وَٱلۡأَنۡعَٰمُ حَتَّىٰٓ إِذَآ أَخَذَتِ
ٱلۡأَرۡضُ زُخۡرُفَهَا وَٱزَّيَّنَتۡ وَظَنَّ أَهۡلُهَآ
أَنَّهُمۡ قَٰدِرُونَ عَلَيۡهَآ أَتَىٰهَآ أَمۡرُنَا لَيۡلًا أَوۡ
نَهَارٗا فَجَعَلۡنَٰهَا حَصِيدٗا كَأَن لَّمۡ تَغۡنَ
بِٱلۡأَمۡسِۚ كَذَٰلِكَ نُفَصِّلُ ٱلۡأٓيَٰتِ لِقَوۡمٖ

២៤-ជាការពិតណាស់ ការប្រៀបធៀបនៃការរស់នៅក្នុងលោកិយនេះគឺដូចជាទឹកភ្លៀង ដែលយើងបានបញ្ចុះវាពីលើមេឃ ហើយវាបានធ្វើឱ្យរុក្ខជាតិដុះចំរុះគ្នានូវអ្វីដែលមនុស្សនិងសត្វបរិភោគ ។ លុះដល់ពេលដែលដីនោះបានបញ្ចេញនូវភាពស្រស់បំព្រងនិងសោភ័ណភាពរបស់វា ហើយម្ចាស់របស់វាស្មានថា ពួកគេនឹងមានលទ្ធភាពលើវា( អាចប្រមូលផលបាន) ស្រាប់តែបទបញ្ជារបស់យើងបានមកដល់ដីនោះនៅពេលយប់ឬពេលថ្ងៃ ហើយយើងធ្វើឱ្យវាខ្ទេចខ្ទីអស់ហាក់ដូចជាមិនធ្លាប់មាន( រុក្ខជាតិ) សោះកាលពីម្សិលមិញ ។ ដូចគ្នានេះដែរ យើងបញ្ជាក់ប្រាប់យ៉ាងច្បាស់

يَتَفَكَّرُونَ ﴿٢٤﴾

នូវអាយ៉ាត់ៗសម្រាប់ក្រុមដែលគិតពិចារណា។

وَٱللَّهُ يَدْعُوٓاْ إِلَىٰ دَارِ ٱلسَّلَٰمِ وَيَهْدِى مَن يَشَآءُ إِلَىٰ صِرَٰطٍ مُّسْتَقِيمٍ ﴿٢٥﴾

២៥-ហើយអល់ឡោះអំពាវនាវ(មនុស្សលោក)ឱ្យទៅរកលំនៅដ្ឋានដែលសុខសាន្ត(ឋានសួគ៌) ហើយទ្រង់ចង្អុលបង្ហាញបុគ្គលណាដែលទ្រង់មានចេតនាឆ្ពោះទៅកាន់មាគ៌ាដ៏ត្រឹមត្រូវ។

۞ لِّلَّذِينَ أَحْسَنُواْ ٱلْحُسْنَىٰ وَزِيَادَةٌ ۖ وَلَا يَرْهَقُ وُجُوهَهُمْ قَتَرٌ وَلَا ذِلَّةٌ ۚ أُوْلَٰٓئِكَ أَصْحَٰبُ ٱلْجَنَّةِ ۖ هُمْ فِيهَا خَٰلِدُونَ ﴿٢٦﴾

២៦-សម្រាប់បណ្ដាអ្នកដែលបានធ្វើល្អ គឺការតបស្នងល្អ(ឋានសួគ៌) និងការបន្ថែមលើសពីនេះទៅទៀត(គឺអាចមើលឃើញអល់ឡោះ)។ ហើយគ្មានធូលីខ្មៅគ្របដណ្ដប់នៅលើមុខរបស់ពួកគេ ហើយក៏គ្មានភាពអាប់ឱនដែរ។ អ្នកទាំងនោះជាបណ្ដាអ្នកឋានសួគ៌ដែលពួកគេស្ថិតនៅក្នុងនោះជាអមតៈ។

وَٱلَّذِينَ كَسَبُواْ ٱلسَّيِّـَٔاتِ جَزَآءُ سَيِّئَةٍۭ بِمِثْلِهَا وَتَرْهَقُهُمْ ذِلَّةٌ ۖ مَّا لَهُم مِّنَ ٱللَّهِ مِنْ عَاصِمٍ ۖ كَأَنَّمَآ أُغْشِيَتْ وُجُوهُهُمْ قِطَعًا مِّنَ ٱلَّيْلِ مُظْلِمًا ۚ أُوْلَٰٓئِكَ أَصْحَٰبُ ٱلنَّارِ ۖ هُمْ فِيهَا خَٰلِدُونَ ﴿٢٧﴾

២៧-ចំណែកពួកដែលបានធ្វើអំពើអាក្រក់វិញ ការតបស្នងនៃអំពើអាក្រក់នោះគឺដូចនឹងវា(ដូចអ្វីដែលពួកគេបានប្រព្រឹត្ត) ហើយភាពអាប់ឱនបានគ្របដណ្ដប់លើពួកគេ។ ពួកគេគ្មានអ្នកការពារក្រៅពីអល់ឡោះឡើយ។ ហាក់ដូចជាមុខរបស់ពួកគេត្រូវគ្របដណ្ដប់ដោយផ្នែកមួយនៃភាពងងឹតនាពេលរាត្រី។ ពួកទាំងនោះគឺជាពួកនរកដែលពួកគេស្ថិតនៅក្នុងនោះជាអមតៈ។

وَيَوْمَ نَحْشُرُهُمْ جَمِيعًا ثُمَّ نَقُولُ لِلَّذِينَ أَشْرَكُواْ مَكَانَكُمْ أَنتُمْ وَشُرَكَآؤُكُمْ ۚ فَزَيَّلْنَا بَيْنَهُمْ ۖ وَقَالَ شُرَكَآؤُهُم مَّا كُنتُمْ إِيَّانَا تَعْبُدُونَ ﴿٢٨﴾

២៨-ហើយ(ចូរចងចាំ)នៅថ្ងៃដែលយើងប្រមូលផ្ដុំពួកគេទាំងអស់គ្នា បន្ទាប់មកយើងមានបន្ទូលទៅកាន់ពួកដែលបានធ្វើស្ពឺរិកថាៈ ចូរពួកអ្នក និងម្ចាស់ដែលពួកអ្នកគោរពនោះប្រកាន់ខ្ជាប់ទីកន្លែងរបស់ពួកអ្នកចុះ។ ហើយយើងបានបំបែកពួកគេ។ ហើយម្ចាស់ដែលពួកគេបានគោរពនោះបាននិយាយថាៈ ពួកអ្នកមិនធ្លាប់គោរពសក្ការៈមកចំពោះពួកយើងឡើយ។

فَكَفَىٰ بِٱللَّهِ شَهِيدًۢا بَيْنَنَا وَبَيْنَكُمْ إِن كُنَّا عَنْ عِبَادَتِكُمْ لَغَٰفِلِينَ ﴿٢٩﴾

២៩-ដូច្នេះ គ្រប់គ្រាន់ហើយដែលអល់ឡោះធ្វើជាសាក្សីរវាងពួកយើងនិងពួកអ្នក។ ពួកយើងពិតជាមិនដឹងមិនឮចំពោះការគោរពសក្ការៈរបស់ពួកអ្នកឡើយ។

هُنَالِكَ تَبْلُواْ كُلُّ نَفْسٍ مَّآ أَسْلَفَتْ ۚ وَرُدُّوٓاْ إِلَى ٱللَّهِ مَوْلَىٰهُمُ ٱلْحَقِّ ۖ وَضَلَّ عَنْهُم مَّا كَانُواْ

៣០-នៅទីនោះ(កន្លែងកាត់សេចក្ដី) គ្រប់ៗរូបនឹងដឹងទាំងអស់ពីអ្វីដែលខ្លួនបានសាងពីមុនមក។ ហើយពួកគេត្រូវបានគេឱ្យវិលត្រឡប់ទៅកាន់អល់ឡោះដែលជាម្ចាស់របស់ពួកគេយ៉ាងពិតប្រាកដ

يَفۡتَرُونَ ﴿٣٠﴾

(ដើម្បីកាត់សេចក្តី)។ ហើយអ្វី(ព្រះនានា)ដែលពួកគេធ្លាប់បានប្រឌិត(គោរព)នោះបានបាត់បង់ពីពួកគេ។

قُلۡ مَن يَرۡزُقُكُم مِّنَ ٱلسَّمَآءِ وَٱلۡأَرۡضِ أَمَّن يَمۡلِكُ ٱلسَّمۡعَ وَٱلۡأَبۡصَٰرَ وَمَن يُخۡرِجُ ٱلۡحَيَّ مِنَ ٱلۡمَيِّتِ وَيُخۡرِجُ ٱلۡمَيِّتَ مِنَ ٱلۡحَيِّ وَمَن يُدَبِّرُ ٱلۡأَمۡرَۚ فَسَيَقُولُونَ ٱللَّهُۚ فَقُلۡ أَفَلَا تَتَّقُونَ ﴿٣١﴾

៣១-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើអ្នកណាជាអ្នកប្រទានលាភសក្ការៈឱ្យពួកអ្នកពីលើមេឃនិងផែនដី? ឬអ្នកណាជាអ្នកគ្រប់គ្រងការឮ និងការឃើញ? ហើយតើនរណាជាអ្នកបញ្ចេញរបស់រស់ពីរបស់ស្លាប់ និងបញ្ចេញរបស់ស្លាប់ពីរបស់រស់[1]? ហើយតើអ្នកណាជាអ្នកចាត់ចែងកិច្ចការទាំងឡាយនោះ? ពួកគេនឹងឆ្លើយថាៈ គឺអល់ឡោះ។ ដូច្នេះចូរអ្នកពោលថាៈ តើពួកអ្នកមិនកោតខ្លាចទេឬ?

فَذَٰلِكُمُ ٱللَّهُ رَبُّكُمُ ٱلۡحَقُّۖ فَمَاذَا بَعۡدَ ٱلۡحَقِّ إِلَّا ٱلضَّلَٰلُۖ فَأَنَّىٰ تُصۡرَفُونَ ﴿٣٢﴾

៣២-ហើយ(អ្នកដែលធ្វើប្រការ)ទាំងនោះគឺអល់ឡោះដែលជាម្ចាស់របស់ពួកអ្នកដ៏ពិតប្រាកដ។ ដូច្នេះតើមានអ្វីទៀតបន្ទាប់ពីភាពពិតក្រៅពីភាពវង្វេងនោះ? ដូច្នេះ តើពួកអ្នកត្រូវគេបង្វែរយ៉ាងដូចម្តេចទៅ?

كَذَٰلِكَ حَقَّتۡ كَلِمَتُ رَبِّكَ عَلَى ٱلَّذِينَ فَسَقُوٓاْ أَنَّهُمۡ لَا يُؤۡمِنُونَ ﴿٣٣﴾

៣៣-ដូច្នេះ បន្ទូលនៃម្ចាស់របស់អ្នកចំពោះពួកដែលប្រព្រឹត្តល្មើសបានបញ្ជាក់យ៉ាងច្បាស់ថាៈ ពិតប្រាកដណាស់ ពួកគេគ្មានជំនឿឡើយ។

قُلۡ هَلۡ مِن شُرَكَآئِكُم مَّن يَبۡدَؤُاْ ٱلۡخَلۡقَ ثُمَّ يُعِيدُهُۥۚ قُلِ ٱللَّهُ يَبۡدَؤُاْ ٱلۡخَلۡقَ ثُمَّ يُعِيدُهُۥۖ فَأَنَّىٰ تُؤۡفَكُونَ ﴿٣٤﴾

៣៤-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើក្នុងចំណោមម្ចាស់របស់ពួកអ្នក តើមានអ្នកណាដែលជាអ្នកផ្តល់កំណើត បន្ទាប់មកធ្វើឱ្យវារស់ឡើងវិញ(នៅថ្ងៃបរលោក)នោះ? ចូរអ្នកពោលថាៈ គឺអល់ឡោះ ទេដែលជាអ្នកផ្តល់កំណើត និងធ្វើឱ្យវារស់ឡើងវិញ។ ដូច្នេះ តើពួកអ្នកត្រូវគេបោកបញ្ឆោតបានយ៉ាងដូចម្តេច?

قُلۡ هَلۡ مِن شُرَكَآئِكُم مَّن يَهۡدِيٓ إِلَى ٱلۡحَقِّۚ قُلِ ٱللَّهُ يَهۡدِي لِلۡحَقِّۗ أَفَمَن يَهۡدِيٓ إِلَى ٱلۡحَقِّ أَحَقُّ أَن يُتَّبَعَ أَمَّن لَّا يَهِدِّيٓ إِلَّآ أَن يُهۡدَىٰۖ فَمَا لَكُمۡ كَيۡفَ تَحۡكُمُونَ ﴿٣٥﴾

៣៥-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើក្នុងចំណោមម្ចាស់របស់ពួកអ្នកមានអ្នកណាដែលអាចចង្អុលបង្ហាញទៅរកការពិតនោះ? ចូរអ្នកពោលថាៈ មានតែអល់ឡោះទេដែលអាចចង្អុលបង្ហាញទៅរកការពិតបាន។ តើអ្នកដែលចង្អុលបង្ហាញទៅរកការពិតជាអ្នកដែលត្រូវគេគោរពតាមដ៏ពិតប្រាកដ ឬអ្នកដែលមិនអាច

១-បញ្ចេញមនុស្សឱ្យរស់រានមានជីវិតពីទឹកកាម និងបញ្ចេញទឹកកាមពីមនុស្ស។

ចង្អុលបង្ហាញមានតែត្រូវការគេចង្អុលបង្ហាញវាវិញនោះ? តើពួកអ្នកមានបញ្ហាអ្វី? តើពួកអ្នកវិនិច្ឆ័យយ៉ាងដូចម្តេច?

៣៦-ហើយភាគច្រើននៃពួកគេមិនតាមអ្វីក្រៅពីការស្មាននោះឡើយ ។ ពិតប្រាកដណាស់ ការស្មានមិនអាចជំនួសប្រការត្រឹមត្រូវបន្តិចបានឡើយ ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹងនូវអ្វីដែលពួកគេប្រព្រឹត្ត ។

وَمَا يَتَّبِعُ أَكْثَرُهُمْ إِلَّا ظَنًّا ۚ إِنَّ ٱلظَّنَّ لَا يُغْنِى
مِنَ ٱلْحَقِّ شَيْـًٔا ۚ إِنَّ ٱللَّهَ عَلِيمٌۢ بِمَا يَفْعَلُونَ ﴿٣٦﴾

៣៧-ហើយគម្ពីរគួរអាននេះមិនអាចត្រូវគេបង្កើតផ្សេងពីអល់ឡោះបានឡើយ ប៉ុន្តែវាបញ្ជាក់ពីអ្វីដែលមានពីមុនវា ហើយវា(គម្ពីរគួរអាន)អធិប្បាយបញ្ជាក់ពីក្បួនច្បាប់ដោយគ្មានការមន្ទិលសង្ស័យក្នុងវា(ដែលបញ្ចុះ)មកពីម្ចាស់នៃពិភពទាំងអស់ ។

وَمَا كَانَ هَـٰذَا ٱلْقُرْءَانُ أَن يُفْتَرَىٰ مِن
دُونِ ٱللَّهِ وَلَـٰكِن تَصْدِيقَ ٱلَّذِى بَيْنَ يَدَيْهِ
وَتَفْصِيلَ ٱلْكِتَـٰبِ لَا رَيْبَ فِيهِ مِن رَّبِّ
ٱلْعَـٰلَمِينَ ﴿٣٧﴾

៣៨-ឬមួយពួកគេនិយាយថាៈ គេ(មូហាំម៉ាត់)បានបង្កើតវាឡើង? ចូរអ្នក(មូហាំម៉ាត់)តបវិញថាៈ ដូច្នេះ ចូរពួកអ្នកនាំមកនូវជំពូកណាមួយដែលដូចវា ហើយចូរពួកអ្នកហៅអ្នកណាដែលពួកអ្នកអាចហៅបានផ្សេងពីអល់ឡោះចុះ ប្រសិនបើពួកអ្នកជាអ្នកត្រឹមត្រូវមែននោះ ។

أَمْ يَقُولُونَ ٱفْتَرَىٰهُ ۖ قُلْ فَأْتُوا۟ بِسُورَةٍ مِّثْلِهِۦ
وَٱدْعُوا۟ مَنِ ٱسْتَطَعْتُم مِّن دُونِ ٱللَّهِ إِن كُنتُمْ
صَـٰدِقِينَ ﴿٣٨﴾

៣៩-ផ្ទុយទៅវិញ ពួកគេបានបដិសេធនូវអ្វីដែលពួកគេមិនជ្រាបពីចំណេះរបស់វា(គម្ពីរគួរអាន) ខណៈដែលភាពជាក់ស្តែងរបស់វា[១] មិនទាន់បានមកដល់ពួកគេនោះ ។ ដូច្នេះ ពួកជំនាន់មុនពួកគេក៏បានបដិសេធដែរ ។ ដូច្នេះ ចូរអ្នកមើលចុះ តើលទ្ធផលចុងក្រោយរបស់ពួកដែលបំពាននោះទៅជាយ៉ាងណា?

بَلْ كَذَّبُوا۟ بِمَا لَمْ يُحِيطُوا۟ بِعِلْمِهِۦ وَلَمَّا
يَأْتِهِمْ تَأْوِيلُهُۥ ۚ كَذَٰلِكَ كَذَّبَ ٱلَّذِينَ مِن
قَبْلِهِمْ ۖ فَٱنظُرْ كَيْفَ كَانَ عَـٰقِبَةُ
ٱلظَّـٰلِمِينَ ﴿٣٩﴾

៤០-ហើយក្នុងចំណោមពួកគេមានអ្នកខ្លះជឿនឹងវា(គម្ពីរគួរអាន) ហើយក្នុងចំណោមពួកគេក៏មានអ្នកខ្លះទៀតមិនជឿនឹងវា ។ ហើយម្ចាស់របស់អ្នកដឹងបំផុតចំពោះពួកដែលបំផ្លិចបំផ្លាញ ។

وَمِنْهُم مَّن يُؤْمِنُ بِهِۦ وَمِنْهُم مَّن لَّا يُؤْمِنُ
بِهِۦ ۚ وَرَبُّكَ أَعْلَمُ بِٱلْمُفْسِدِينَ ﴿٤٠﴾

៤១-ហើយប្រសិនបើពួកគេបានបដិសេធអ្នក(មូហាំម៉ាត់) ដូច្នេះ ចូរអ្នកពោលថាៈ សម្រាប់ខ្ញុំគឺកិច្ចការរបស់ខ្ញុំ ហើយសម្រាប់

وَإِن كَذَّبُوكَ فَقُل لِّى عَمَلِى وَلَكُمْ عَمَلُكُمْ ۖ

១-អ្វីដែលគេបានសន្យាចំពោះពួកគេនៅក្នុងគម្ពីរ ។

أَنتُم بَرِيٓـُٔونَ مِمَّآ أَعۡمَلُ وَأَنَا۠ بَرِيٓءٞ مِّمَّا تَعۡمَلُونَ ﴿٤١﴾

ពួកអ្នកគឺកិច្ចការរបស់ពួកអ្នក។ ពួកអ្នកមិនពាក់ព័ន្ធនឹងអ្វីដែលខ្ញុំធ្វើ ហើយខ្ញុំក៏មិនពាក់ព័ន្ធនឹងអ្វីដែលពួកអ្នកធ្វើដែរ។

وَمِنۡهُم مَّن يَسۡتَمِعُونَ إِلَيۡكَۚ أَفَأَنتَ تُسۡمِعُ ٱلصُّمَّ وَلَوۡ كَانُواْ لَا يَعۡقِلُونَ ﴿٤٢﴾

៤២-ហើយក្នុងចំណោមពួកគេមានអ្នកខ្លះកំពុងស្តាប់អ្នក។ ដូច្នេះតើអ្នកអាចធ្វើឱ្យមនុស្សថ្លង់អាចស្តាប់ឮឬ បើពួកគេមិនចេះពិចារណាផងនោះ?

وَمِنۡهُم مَّن يَنظُرُ إِلَيۡكَۚ أَفَأَنتَ تَهۡدِي ٱلۡعُمۡيَ وَلَوۡ كَانُواْ لَا يُبۡصِرُونَ ﴿٤٣﴾

៤៣-ហើយក្នុងចំណោមពួកគេមានអ្នកខ្លះមើលទៅអ្នក។ ដូច្នេះ តើអ្នកអាចចង្អុលបង្ហាញមនុស្សខ្វាក់បានឬ បើពួកគេមិនធ្លាប់មើលឃើញផងនោះ?

إِنَّ ٱللَّهَ لَا يَظۡلِمُ ٱلنَّاسَ شَيۡـٔٗا وَلَٰكِنَّ ٱلنَّاسَ أَنفُسَهُمۡ يَظۡلِمُونَ ﴿٤٤﴾

៤៤-ពិតប្រាកដណាស់ អល់ឡោះមិនបំពានលើមនុស្សលោកបន្តិចណាឡើយ ប៉ុន្តែមនុស្សលោកទេដែលបំពានលើខ្លួនឯងនោះ។

وَيَوۡمَ يَحۡشُرُهُمۡ كَأَن لَّمۡ يَلۡبَثُوٓاْ إِلَّا سَاعَةٗ مِّنَ ٱلنَّهَارِ يَتَعَارَفُونَ بَيۡنَهُمۡۚ قَدۡ خَسِرَ ٱلَّذِينَ كَذَّبُواْ بِلِقَآءِ ٱللَّهِ وَمَا كَانُواْ مُهۡتَدِينَ ﴿٤٥﴾

៤៥-នៅថ្ងៃបរលោកទ្រង់នឹងប្រមូលផ្តុំពួកគេ ពួកគេហាក់ដូចជាមិនធ្លាប់បានរស់នៅ(លើលោកិយ)ឡើយ លើកលែងតែរយៈពេលមួយដ៏ខ្លីនៃពេលថ្ងៃប៉ុណ្ណោះ។ ពួកគេនឹងស្គាល់គ្នាទៅវិញទៅមក។ ពួកដែលបានបដិសេធនឹងការជួបអល់ឡោះពិតជាបានខាតបង់ ហើយពួកគេមិនបានទទួលការចង្អុលបង្ហាញឡើយ។

وَإِمَّا نُرِيَنَّكَ بَعۡضَ ٱلَّذِي نَعِدُهُمۡ أَوۡ نَتَوَفَّيَنَّكَ فَإِلَيۡنَا مَرۡجِعُهُمۡ ثُمَّ ٱللَّهُ شَهِيدٌ عَلَىٰ مَا يَفۡعَلُونَ ﴿٤٦﴾

៤៦-ហើយទោះបីជាយើងឱ្យអ្នក(មូហាំម៉ាត់)មើលឃើញទារុណកម្មខ្លះ(នៅលើលោកិយ)ដែលយើងសន្យាចំពោះពួកគេ ឬយើងនឹងឱ្យអ្នកស្លាប់(មុនឃើញទារុណកម្មនោះ)ក៏ដោយ ក៏កន្លែងវិលត្រឡប់របស់ពួកគេឆ្ពោះមកកាន់យើងដដែល។ បន្ទាប់មកអល់ឡោះគឺជាអ្នកធ្វើសាក្សីចំពោះអ្វីដែលពួកអ្នកប្រព្រឹត្ត។

وَلِكُلِّ أُمَّةٖ رَّسُولٞۖ فَإِذَا جَآءَ رَسُولُهُمۡ قُضِيَ بَيۡنَهُم بِٱلۡقِسۡطِ وَهُمۡ لَا يُظۡلَمُونَ ﴿٤٧﴾

៤៧-រាល់ប្រជាជាតិ(គ្រប់ជំនាន់)មានអ្នកនាំសារម្នាក់។ ហើយនៅពេលដែលអ្នកនាំសាររបស់ពួកគេបានមកដល់ គេបានវិនិច្ឆ័យរវាងពួកគេដោយយុត្តិធម៌ ហើយពួកគេមិនត្រូវបានគេបំពានឡើយ។

وَيَقُولُونَ مَتَىٰ هَٰذَا ٱلۡوَعۡدُ إِن كُنتُمۡ صَٰدِقِينَ ﴿٤٨﴾

៤៨-ហើយពួកគេនិយាយថា: តើការសន្យានេះ(ថ្ងៃបរលោក)នៅពេលណា? ប្រសិនបើពួកអ្នកជាអ្នកដែលត្រឹមត្រូវមែននោះ។

៤៩-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ខ្ញុំគ្មានលទ្ធភាពការពារខ្លួនខ្ញុំពីគ្រោះថ្នាក់ណាមួយឡើយ ហើយខ្ញុំក៏មិនអាចនាំផលប្រយោជន៍ណាមួយសម្រាប់ខ្លួនខ្ញុំដែរ លើកលែងតែអ្វីដែលអល់ឡោះមានចេតនាប៉ុណ្ណោះ។ គ្រប់ប្រជាជាតិសុទ្ធតែមានពេលកំណត់។ នៅពេលដែលការកំណត់របស់ពួកគេបានមកដល់ ពួកគេមិនអាចសុំពន្យារពេល ឬសុំឱ្យកើតឡើងមុនពេលកំណត់បានឡើយ សូម្បីតែមួយវិនាទីក៏ដោយ។

قُل لَّآ أَمۡلِكُ لِنَفۡسِي ضَرّٗا وَلَا نَفۡعًا إِلَّا مَا
شَآءَ ٱللَّهُۗ لِكُلِّ أُمَّةٍ أَجَلٌۚ إِذَا جَآءَ أَجَلُهُمۡ
فَلَا يَسۡتَـٔۡخِرُونَ سَاعَةٗ وَلَا يَسۡتَقۡدِمُونَ ٤٩

៥០-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើទណ្ឌកម្មរបស់ទ្រង់បានមកដល់ពួកអ្នកនៅពេលយប់ ឬពេលថ្ងៃ តើពួកដែលប្រព្រឹត្តអំពើអាក្រក់នោះនៅតក់ក្រហល់ចង់បានអ្វីទៀត?

قُلۡ أَرَءَيۡتُمۡ إِنۡ أَتَىٰكُمۡ عَذَابُهُۥ بَيَٰتًا
أَوۡ نَهَارٗا مَّاذَا يَسۡتَعۡجِلُ مِنۡهُ ٱلۡمُجۡرِمُونَ ٥٠

៥១-តើពួកអ្នករង់ចាំរហូតដល់ទណ្ឌកម្មធ្លាក់មកលើពួកអ្នក ទើបពួកអ្នកជឿលើវាឬ? តើពេលនេះឬ(ទើបពួកអ្នកជឿ)? ហើយជាការពិតណាស់ ពួកអ្នកធ្លាប់បានតក់ក្រហល់នឹងទណ្ឌកម្មនេះ។

أَثُمَّ إِذَا مَا وَقَعَ ءَامَنتُم بِهِۦٓۚ ءَآلۡـَٰٔنَ وَقَدۡ كُنتُم
بِهِۦ تَسۡتَعۡجِلُونَ ٥١

៥២-ក្រោយមកគេបាននិយាយទៅកាន់ពួកដែលបានបំពានថា: ចូរពួកអ្នកភ្លក្សរសជាតិទារុណកម្មជាអមតៈចុះ។ ពួកអ្នកមិនត្រូវបានគេតបស្នងក្រៅពីអ្វីដែលពួកអ្នកបានប្រព្រឹត្តឡើយ។

ثُمَّ قِيلَ لِلَّذِينَ ظَلَمُواْ ذُوقُواْ عَذَابَ ٱلۡخُلۡدِ
هَلۡ تُجۡزَوۡنَ إِلَّا بِمَا كُنتُمۡ تَكۡسِبُونَ ٥٢

៥៣-ពួកគេសុំសួរអ្នក(មូហាំម៉ាត់)ថា: តើទណ្ឌកម្មនោះពិតឬទេ? ចូរអ្នកពោលថា: បាទ ខ្ញុំសូមស្បថនឹងម្ចាស់របស់ខ្ញុំ វាគឺជាការពិត ហើយពួកអ្នកមិនអាចគេចរួចឡើយ។

۞وَيَسۡتَنۢبِـُٔونَكَ أَحَقٌّ هُوَۖ قُلۡ إِي وَرَبِّيٓ إِنَّهُۥ
لَحَقّٞۖ وَمَآ أَنتُم بِمُعۡجِزِينَ ٥٣

៥៤-ប្រសិនបើមនុស្សគ្រប់រូបធ្លាប់បានបំពាននោះ មានទ្រព្យសម្បត្តិទាំងអស់នៅលើផែនដី ប្រាកដជាគេសុខចិត្តលោះខ្លួននឹងវា។ ហើយពួកទាំងនេះបានលាក់បាំងភាពសោកស្តាយនៅពេលដែលពួកគេបានឃើញទារុណកម្មនោះ។ ហើយគេបានវិនិច្ឆ័យរវាងពួកគេដោយយុត្តិធម៌ ហើយពួកគេមិនត្រូវបានគេបំពានឡើយ។

وَلَوۡ أَنَّ لِكُلِّ نَفۡسٖ ظَلَمَتۡ مَا فِي ٱلۡأَرۡضِ
لَٱفۡتَدَتۡ بِهِۦۗ وَأَسَرُّواْ ٱلنَّدَامَةَ لَمَّا رَأَوُاْ
ٱلۡعَذَابَۖ وَقُضِيَ بَيۡنَهُم بِٱلۡقِسۡطِ وَهُمۡ لَا
يُظۡلَمُونَ ٥٤

៥៥-តើអ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងផែនដីពិតជាមិនមែនជាកម្មសិទ្ធិរបស់អល់ឡោះទេឬ? តើការសន្យារបស់អល់ឡោះពិតជាមិនមែនជាការពិតទេឬ? ក៏ប៉ុន្តែពួកគេភាគច្រើន

أَلَآ إِنَّ لِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۗ أَلَآ إِنَّ
وَعۡدَ ٱللَّهِ حَقّٞ وَلَٰكِنَّ أَكۡثَرَهُمۡ لَا يَعۡلَمُونَ ٥٥

មិនដឹងឡើយ ។

هُوَ يُحْيِۦ وَيُمِيتُ وَإِلَيْهِ تُرْجَعُونَ ﴿٥٦﴾

៥៦-ទ្រង់គឺជាអ្នកផ្តល់ជីវិត និងជាអ្នកយកជីវិតទៅវិញ ហើយពួកអ្នកនឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់តែមួយគត់ ។

يَٰٓأَيُّهَا ٱلنَّاسُ قَدْ جَآءَتْكُم مَّوْعِظَةٌ مِّن رَّبِّكُمْ وَشِفَآءٌ لِّمَا فِي ٱلصُّدُورِ وَهُدًى وَرَحْمَةٌ لِّلْمُؤْمِنِينَ ﴿٥٧﴾

៥៧-ឱមនុស្សលោកទាំងឡាយ! ជាការពិតណាស់ ដំបូន្មាន(គម្ពីរគួរអាន)ពីម្ចាស់របស់ពួកអ្នកបានមកដល់ពួកអ្នក ហើយវាជាឱសថព្យាបាលនូវអ្វីដែលមាននៅក្នុងចិត្ត និងជាការចង្អុលបង្ហាញ ហើយនិងជាក្តីមេត្តាករុណាចំពោះអ្នកដែលមានជំនឿ ។

قُلْ بِفَضْلِ ٱللَّهِ وَبِرَحْمَتِهِۦ فَبِذَٰلِكَ فَلْيَفْرَحُوا۟ هُوَ خَيْرٌ مِّمَّا يَجْمَعُونَ ﴿٥٨﴾

៥៨-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ដោយក្តីប្រោសប្រទានរបស់អល់ឡោះ និងក្តីមេត្តាករុណារបស់ទ្រង់ ដូច្នេះសូមឱ្យពួកគេសប្បាយរីករាយចុះ ។ វានោះប្រសើរជាងអ្វីដែលពួកគេប្រមូលទុកទៅទៀត ។

قُلْ أَرَءَيْتُم مَّآ أَنزَلَ ٱللَّهُ لَكُم مِّن رِّزْقٍ فَجَعَلْتُم مِّنْهُ حَرَامًا وَحَلَٰلًا قُلْ ءَآللَّهُ أَذِنَ لَكُمْ ۖ أَمْ عَلَى ٱللَّهِ تَفْتَرُونَ ﴿٥٩﴾

៥៩-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកប្រាប់ខ្ញុំមកមើល អ្វីដែលអល់ឡោះបានប្រទានដល់ពួកអ្នកនូវលាភសក្ការៈ ហើយពួកអ្នកបានធ្វើវាមួយចំនួនទៅជារបស់ហាមឃាត់ និងជារបស់អនុញ្ញាត(តាមទំនើងចិត្ត) ។ ចូរអ្នកពោលថា: តើអល់ឡោះបានអនុញ្ញាតឱ្យពួកអ្នក ឬមួយពួកអ្នកប្រឌិតកុហកចំពោះអល់ឡោះ?

وَمَا ظَنُّ ٱلَّذِينَ يَفْتَرُونَ عَلَى ٱللَّهِ ٱلْكَذِبَ يَوْمَ ٱلْقِيَٰمَةِ ۗ إِنَّ ٱللَّهَ لَذُو فَضْلٍ عَلَى ٱلنَّاسِ وَلَٰكِنَّ أَكْثَرَهُمْ لَا يَشْكُرُونَ ﴿٦٠﴾

៦០-ហើយតើពួកដែលប្រឌិតកុហកចំពោះអល់ឡោះគិតយ៉ាងដូចម្តេចនាថ្ងៃបរលោកនោះ? ពិតប្រាកដណាស់ អល់ឡោះមានការប្រោសប្រទានលើមនុស្សលោក ប៉ុន្តែភាគច្រើននៃពួកគេមិនដឹងគុណឡើយ ។

وَمَا تَكُونُ فِي شَأْنٍ وَمَا تَتْلُوا۟ مِنْهُ مِن قُرْءَانٍ وَلَا تَعْمَلُونَ مِنْ عَمَلٍ إِلَّا كُنَّا عَلَيْكُمْ شُهُودًا إِذْ تُفِيضُونَ فِيهِ ۚ وَمَا يَعْزُبُ عَن رَّبِّكَ مِن مِّثْقَالِ ذَرَّةٍ فِي ٱلْأَرْضِ وَلَا فِي ٱلسَّمَآءِ وَلَآ أَصْغَرَ مِن ذَٰلِكَ وَلَآ أَكْبَرَ إِلَّا فِي

៦១- ហើយទោះបីជាអ្នកស្ថិតក្នុងសភាពការណាមួយ និងសូត្រខ្លះៗអំពីគម្ពីរគួរអាន ព្រមទាំងពួកអ្នកធ្វើកិច្ចការអ្វីក៏ដោយ ក៏យើងនៅតែធ្វើជាសាក្សីដល់ពួកអ្នកនៅពេលដែលពួកអ្នកធ្វើវាដែរ ។ គ្មានអ្វីលាក់បាំងនឹងម្ចាស់របស់អ្នកឡើយសូម្បីតែវត្ថុដ៏តូចបំផុតនៅលើផែនដីនិងនៅលើមេឃ ហើយក៏មិនអាចលាក់បាំងបានដែរសូម្បីតែវត្ថុដែលតូចឬធំជាងនេះ គឺសុទ្ធតែមាននៅក្នុង គម្ពីរ(ឡាវហុលម៉ះហ្វ៊ូស)យ៉ាងច្បាស់លាស់ទាំងអស់ ។

كِتَٰبٍ مُّبِينٍ ﴿٦١﴾

أَلَآ إِنَّ أَوۡلِيَآءَ ٱللَّهِ لَا خَوۡفٌ عَلَيۡهِمۡ وَلَا هُمۡ يَحۡزَنُونَ ﴿٦٢﴾

٦២-តើមិនមែនទេឬ បណ្តាអ្នកមានជំនឿដ៏ស្មោះត្រង់លើអល់ឡោះ ពិតជាគ្មានការភ័យខ្លាចចំពោះពួកគេ ហើយពួកគេក៏គ្មានទុក្ខព្រួយអ្វីដែរនោះ?

ٱلَّذِينَ ءَامَنُواْ وَكَانُواْ يَتَّقُونَ ﴿٦٣﴾

៦៣-គឺបណ្តាអ្នកដែលមានជំនឿ ហើយពួកគេបានកោតខ្លាចអល់ឡោះ ។

لَهُمُ ٱلۡبُشۡرَىٰ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَا وَفِي ٱلۡأٓخِرَةِۚ لَا تَبۡدِيلَ لِكَلِمَٰتِ ٱللَّهِۚ ذَٰلِكَ هُوَ ٱلۡفَوۡزُ ٱلۡعَظِيمُ ﴿٦٤﴾

៦៤-ពួកគេនឹងទទួលបានដំណឹងរីករាយទាំងការរស់នៅក្នុងលោកិយ និងនៅថ្ងៃបរលោក ។ មិនអាចមានការផ្លាស់ប្តូរពាក្យសំដីទាំងឡាយរបស់អល់ឡោះបានឡើយ ។ នោះគឺជាជោគជ័យដ៏ធំធេង ។

وَلَا يَحۡزُنكَ قَوۡلُهُمۡۘ إِنَّ ٱلۡعِزَّةَ لِلَّهِ جَمِيعًاۚ هُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ﴿٦٥﴾

៦៥-ហើយចូរកុំឱ្យពាក្យសំដីរបស់ពួកគេធ្វើឱ្យអ្នក(មូហាំម៉ាត់)កើតទុក្ខឱ្យសោះ ។ ពិតប្រាកដណាស់ អំណាចខ្លាំងក្លាជាកម្មសិទ្ធិរបស់អល់ឡោះទាំងអស់ ។ ទ្រង់មហាឮ មហាដឹង ។

أَلَآ إِنَّ لِلَّهِ مَن فِي ٱلسَّمَٰوَٰتِ وَمَن فِي ٱلۡأَرۡضِۗ وَمَا يَتَّبِعُ ٱلَّذِينَ يَدۡعُونَ مِن دُونِ ٱللَّهِ شُرَكَآءَۚ إِن يَتَّبِعُونَ إِلَّا ٱلظَّنَّ وَإِنۡ هُمۡ إِلَّا يَخۡرُصُونَ ﴿٦٦﴾

៦៦-តើមិនមែនទេឬ អ្នកដែលនៅលើមេឃជាច្រើនជាន់ និងផែនដីនោះពិតជាកម្មសិទ្ធិរបស់អល់ឡោះ? ហើយពួកដែលអំពាវនាវផ្សេងពីអល់ឡោះមិនប្រតិបត្តិតាមម្ចាស់ដែលពួកគេធ្វើស្ហ៊ីកនោះទេ ។ ពួកគេមិនប្រតិបត្តិតាមឡើយ លើកលែងតែតាមការនឹកស្មានប៉ុណ្ណោះ ហើយពួកគេក៏គ្មានអ្វីក្រៅពីប្រឌិតកុហកនោះដែរ ។

هُوَ ٱلَّذِي جَعَلَ لَكُمُ ٱلَّيۡلَ لِتَسۡكُنُواْ فِيهِ وَٱلنَّهَارَ مُبۡصِرًاۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ لِّقَوۡمٖ يَسۡمَعُونَ ﴿٦٧﴾

៦៧-ទ្រង់គឺជាអ្នកដែលបានបង្កើតពេលយប់សម្រាប់ពួកអ្នកដើម្បីឱ្យពួកអ្នកសម្រាកនៅក្នុងវា និងបានបង្កើតពេលថ្ងៃជាពន្លឺ (សម្រាប់ពួកអ្នកមើលឃើញ) ។ ពិតប្រាកដណាស់ នៅក្នុងរឿងទាំងនោះគឺជាភស្តុតាងៗសម្រាប់ក្រុមដែលស្តាប់ឮ ។

قَالُواْ ٱتَّخَذَ ٱللَّهُ وَلَدٗاۗ سُبۡحَٰنَهُۥۖ هُوَ ٱلۡغَنِيُّۖ لَهُۥ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۚ إِنۡ عِندَكُم مِّن سُلۡطَٰنِۭ بِهَٰذَآۚ أَتَقُولُونَ عَلَى ٱللَّهِ مَا لَا تَعۡلَمُونَ ﴿٦٨﴾

៦៨-ពួកគេ(ពួកមូស្ហ៊ីគីន)បាននិយាយថាៈ អល់ឡោះមានបុត្រ ។ ទ្រង់មហាស្អាតស្អំ ។ ទ្រង់ជាអ្នកមានជាទីបំផុត ។ អ្វីៗនៅលើមេឃជាច្រើនជាន់ និងអ្វីៗនៅលើផែនដីជាកម្មសិទ្ធិរបស់ទ្រង់ ។ ពួកអ្នកគ្មានភស្តុតាងណាមួយបញ្ជាក់ពីរឿងនេះ(ការមានបុត្រ)ឡើយ ។ តើពួកអ្នកនិយាយចំពោះអល់ឡោះនូវអ្វីដែលពួកអ្នក

មិនដឹងឬ?

៦៩-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពិតប្រាកដណាស់ ពួកដែលប្រឌិតរឿងភូតកុហកចំពោះអល់ឡោះមិនទទួលជោគជ័យឡើយ។

៧០-(សម្រាប់ពួកគេ)គឺការសប្បាយរីករាយនៅក្នុងលោកិយ (មួយរយៈពេលខ្លីប៉ុណ្ណោះ) ក្រោយមកចំពោះយើងជាកន្លែងវិលត្រឡប់របស់ពួកគេ បន្ទាប់មកយើងនឹងឱ្យពួកគេភ្លក្សទារុណកម្មដ៏ខ្លាំងក្លាដោយសារតែអ្វីដែលពួកគេធ្លាប់បានប្រឆាំង។

៧១-ចូរអ្នក(មូហាំម៉ាត់)និទានប្រាប់ពួកគេអំពីប្រវត្តិរបស់នួហ នៅពេលគាត់បានពោលទៅកាន់ប្រជាជនរបស់គាត់ថាៈ ឱប្រជាជនរបស់ខ្ញុំ! ប្រសិនបើការរស់នៅរបស់ខ្ញុំ និងការក្រើនរំលឹករបស់ខ្ញុំតាមរយៈភស្តុតាងនានារបស់អល់ឡោះមានភាពធ្ងន់ធ្ងរសម្រាប់ពួកអ្នកនោះ ដូច្នេះចំពោះអល់ឡោះតែមួយគត់ ដែលខ្ញុំប្រគល់ការទុកចិត្ត។ ហេតុនេះ ចូរពួកអ្នកប្រមូលល្បិចកលរបស់ពួកអ្នក និងម្ចាស់របស់ពួកអ្នកមក បន្ទាប់មកកុំឱ្យល្បិចកលរបស់ពួកអ្នកក្លាយជារឿងអាថិកំបាំងចំពោះពួកអ្នកឱ្យសោះ(ធ្វើដោយចំហ)។ ក្រោយមកចូរពួកអ្នកដាក់ទោសខ្ញុំ ហើយពួកអ្នកកុំពន្យារពេលឱ្យខ្ញុំឱ្យសោះ។

៧២-ប៉ុន្តែប្រសិនបើពួកអ្នកបានបែរចេញ(ពីការអំពាវនាវរបស់ខ្ញុំ) ខ្ញុំពិតជាមិនស្នើសុំកម្រៃពីពួកអ្នកឡើយ។ កម្រៃរបស់ខ្ញុំគឺមកពីអល់ឡោះតែមួយគត់ ហើយខ្ញុំត្រូវបានគេបង្គាប់ឱ្យក្លាយជាអ្នកដែលស្ថិតក្នុងចំណោមអ្នកមូស្លីម។

៧៣-តែពួកគេបានបដិសេធចំពោះគេ(នួហ) ហេតុនេះយើងក៏បានជួយសង្គ្រោះគេ និងអ្នកដែលនៅជាមួយគេក្នុងសំពៅនោះ។ យើងបានចាត់តាំងពួកគេ(ក្រុមដែលតាមនួហ)ជាពួកបន្តវេន(នៅលើផែនដី) ហើយយើងបានពន្លិចពួកដែលបានប្រឆាំងនឹងភស្តុតាងនានារបស់យើង។ ដូច្នេះចូរអ្នកពិនិត្យមើល ថាតើលទ្ធផលចុងក្រោយរបស់ពួកដែលត្រូវគេព្រមាននោះយ៉ាងដូចម្តេចដែរ?

៧៤-ក្រោយមកយើងបានបញ្ជូនបន្ទាប់ពីគេ(នួហ)នូវអ្នក

قُلۡ إِنَّ ٱلَّذِينَ يَفۡتَرُونَ عَلَى ٱللَّهِ ٱلۡكَذِبَ
لَا يُفۡلِحُونَ ٦٩

مَتَٰعٞ فِي ٱلدُّنۡيَا ثُمَّ إِلَيۡنَا مَرۡجِعُهُمۡ ثُمَّ
نُذِيقُهُمُ ٱلۡعَذَابَ ٱلشَّدِيدَ بِمَا كَانُواْ
يَكۡفُرُونَ ٧٠

۞ وَٱتۡلُ عَلَيۡهِمۡ نَبَأَ نُوحٍ إِذۡ قَالَ لِقَوۡمِهِۦ
يَٰقَوۡمِ إِن كَانَ كَبُرَ عَلَيۡكُم مَّقَامِي وَتَذۡكِيرِي
بِـَٔايَٰتِ ٱللَّهِ فَعَلَى ٱللَّهِ تَوَكَّلۡتُ فَأَجۡمِعُوٓاْ
أَمۡرَكُمۡ وَشُرَكَآءَكُمۡ ثُمَّ لَا يَكُنۡ أَمۡرُكُمۡ عَلَيۡكُمۡ
غُمَّةٗ ثُمَّ ٱقۡضُوٓاْ إِلَيَّ وَلَا تُنظِرُونِ ٧١

فَإِن تَوَلَّيۡتُمۡ فَمَا سَأَلۡتُكُم مِّنۡ أَجۡرٍۖ إِنۡ أَجۡرِيَ
إِلَّا عَلَى ٱللَّهِۖ وَأُمِرۡتُ أَنۡ أَكُونَ مِنَ
ٱلۡمُسۡلِمِينَ ٧٢

فَكَذَّبُوهُ فَنَجَّيۡنَٰهُ وَمَن مَّعَهُۥ فِي ٱلۡفُلۡكِ
وَجَعَلۡنَٰهُمۡ خَلَٰٓئِفَ وَأَغۡرَقۡنَا ٱلَّذِينَ
كَذَّبُواْ بِـَٔايَٰتِنَاۖ فَٱنظُرۡ كَيۡفَ كَانَ عَٰقِبَةُ
ٱلۡمُنذَرِينَ ٧٣

ثُمَّ بَعَثۡنَا مِنۢ بَعۡدِهِۦ رُسُلًا إِلَىٰ قَوۡمِهِمۡ

នាំសារជាច្រើនមកកាន់ក្រុមរបស់ពួកគេ ហើយពួកគេក៏បាននាំមកឱ្យពួកគេនូវមុជីហ្សាត់យ៉ាងច្រើនដ៏ជាក់ច្បាស់ ។ ប៉ុន្តែពួកគេនៅតែមិនបានជឿនូវអ្វីដែលពួកគេបានបដិសេធនឹងគេ( នូហ) កាលពីមុន ។ ដូចនេះដែរ យើងក៏បោះត្រាភ្ជិតទៅលើចិត្តរបស់ពួកដែលបំពាន ។

៧៥-ក្រោយមកយើងបានបញ្ជូនមូសា និងហារូនបន្ទាប់ពីពួកគេ( អ្នកនាំសារ) ទៅកាន់ហ្វៀរអោន និងមេដឹកនាំរបស់គេនូវបណ្តាមុជីហ្សាត់របស់យើង ប៉ុន្តែពួកគេនៅតែក្រអឺតក្រទម និងជាក្រុមដែលធ្លាប់បានប្រព្រឹត្តបាបកម្ម ។

៧៦-ហើយនៅពេលដែលការពិតពីយើងបានមកដល់ពួកគេ ពួកគេបាននិយាយថា: ពិតប្រាកដណាស់ នេះគឺជាមន្តអាគមយ៉ាងជាក់ច្បាស់ ។

៧៧-មូសាបានពោលថា: តើពួកអ្នកមួលបង្កាច់ការពិត( ថាជាមន្តអាគម) នៅពេលដែលវាបានមកដល់ពួកអ្នកឬ? តើនេះជាមន្តអាគមឬ? តែពួកដែលប្រើមន្តអាគមមិនជោគជ័យឡើយ ។

៧៨-ពួកគេបាននិយាយថា: តើអ្នកបានមកកាន់ពួកយើងដើម្បីឱ្យពួកយើងបែរចេញពីអ្វី( ជំនឿ) ដែលពួកយើងបានទទួលវាពីដូនតារបស់យើង និងដើម្បីអ្នកទាំងពីរអាចទទួលបាននូវភាពខ្ពង់ខ្ពស់នៅលើផែនដីឬ? ចំណែកពួកយើងវិញមិនមានជំនឿលើអ្នកទាំងពីរឡើយ ។

៧៩-ហើយហ្វៀរអោនបាននិយាយថា: ចូរពួកអ្នកនាំអ្នកដែលពូកែខាងមន្តអាគមទាំងអស់មកកាន់យើង ។

៨០-ហើយនៅពេលដែលពួកមន្តអាគមបានមកដល់( ជួបហ្វៀរអោន) មូសាបានពោលទៅកាន់ពួកគេថា: ចូរពួកអ្នកបោះចុះនូវអ្វីដែលពួកអ្នកចង់បោះនោះ ។

៨១-ហើយនៅពេលពួកគេបានបោះនោះ មូសាក៏បានពោលថា: អ្វីដែលពួកអ្នកបានបោះនោះ វាគឺជាមន្តអាគម ។ ពិតប្រាកដណាស់ អល់ឡោះនឹងធ្វើឱ្យវាគ្មានប្រសិទ្ធភាពឡើយ ។ ពិតប្រាកដ

فَجَآءُوهُم بِٱلۡبَيِّنَٰتِ فَمَا كَانُواْ لِيُؤۡمِنُواْ بِمَا كَذَّبُواْ بِهِۦ مِن قَبۡلُۚ كَذَٰلِكَ نَطۡبَعُ عَلَىٰ قُلُوبِ ٱلۡمُعۡتَدِينَ ٧٤

ثُمَّ بَعَثۡنَا مِنۢ بَعۡدِهِم مُّوسَىٰ وَهَٰرُونَ إِلَىٰ فِرۡعَوۡنَ وَمَلَإِيْهِۦ بِـَٔايَٰتِنَا فَٱسۡتَكۡبَرُواْ وَكَانُواْ قَوۡمٗا مُّجۡرِمِينَ ٧٥

فَلَمَّا جَآءَهُمُ ٱلۡحَقُّ مِنۡ عِندِنَا قَالُوٓاْ إِنَّ هَٰذَا لَسِحۡرٞ مُّبِينٞ ٧٦

قَالَ مُوسَىٰٓ أَتَقُولُونَ لِلۡحَقِّ لَمَّا جَآءَكُمۡۖ أَسِحۡرٌ هَٰذَا وَلَا يُفۡلِحُ ٱلسَّٰحِرُونَ ٧٧

قَالُوٓاْ أَجِئۡتَنَا لِتَلۡفِتَنَا عَمَّا وَجَدۡنَا عَلَيۡهِ ءَابَآءَنَا وَتَكُونَ لَكُمَا ٱلۡكِبۡرِيَآءُ فِي ٱلۡأَرۡضِ وَمَا نَحۡنُ لَكُمَا بِمُؤۡمِنِينَ ٧٨

وَقَالَ فِرۡعَوۡنُ ٱئۡتُونِي بِكُلِّ سَٰحِرٍ عَلِيمٖ ٧٩

فَلَمَّا جَآءَ ٱلسَّحَرَةُ قَالَ لَهُم مُّوسَىٰٓ أَلۡقُواْ مَآ أَنتُم مُّلۡقُونَ ٨٠

فَلَمَّآ أَلۡقَوۡاْ قَالَ مُوسَىٰ مَا جِئۡتُم بِهِ ٱلسِّحۡرُۖ إِنَّ ٱللَّهَ سَيُبۡطِلُهُۥٓ إِنَّ ٱللَّهَ لَا يُصۡلِحُ عَمَلَ

ٱلْمُفْسِدِينَ ﴿٨١﴾

ណាស់ អល់ឡោះមិនសម្រួលដល់កិច្ចការរបស់ពួកដែលបង្កវិនាស-កម្មឡើយ ។

وَيُحِقُّ ٱللَّهُ ٱلْحَقَّ بِكَلِمَٰتِهِۦ وَلَوْ كَرِهَ ٱلْمُجْرِمُونَ ﴿٨٢﴾

៨២-អល់ឡោះនឹងបញ្ជាក់ឱ្យឃើញនូវការពិតតាមរយៈបន្ទូលទាំងឡាយរបស់ទ្រង់ ទោះបីជាពួកប្រព្រឹត្តអាក្រក់ទាំងនោះមិនពេញចិត្តក៏ដោយ ។

فَمَآ ءَامَنَ لِمُوسَىٰٓ إِلَّا ذُرِّيَّةٌ مِّن قَوْمِهِۦ عَلَىٰ خَوْفٍ مِّن فِرْعَوْنَ وَمَلَإِي۟هِمْ أَن يَفْتِنَهُمْ ۚ وَإِنَّ فِرْعَوْنَ لَعَالٍ فِى ٱلْأَرْضِ وَإِنَّهُۥ لَمِنَ ٱلْمُسْرِفِينَ ﴿٨٣﴾

៨៣-តែគ្មានអ្នកណាម្នាក់ជឿលើមូសាឡើយ លើកលែងតែពូជពង្សនៃក្រុមរបស់គេប៉ុណ្ណោះ ដោយសារតែពួកគេភ័យខ្លាចហ្វៀរអោននិងមេដឹកនាំរបស់ពួកគេធ្វើទុក្ខទោសដល់ពួកគេ ។ តែតាមពិតហ្វៀរអោន គឺជាអ្នកដែលក្អេងក្អាងបំផុតនៅលើផែនដី ហើយពិតប្រាកដណាស់ គេស្ថិតនៅក្នុងចំណោមពួកដែលបំពាន ។

وَقَالَ مُوسَىٰ يَٰقَوْمِ إِن كُنتُمْ ءَامَنتُم بِٱللَّهِ فَعَلَيْهِ تَوَكَّلُوٓا۟ إِن كُنتُم مُّسْلِمِينَ ﴿٨٤﴾

៨៤-ហើយមូសាបានពោលថា: ឱក្រុមរបស់ខ្ញុំ! ប្រសិនបើពួកអ្នកបានជឿលើអល់ឡោះហើយនោះ ពួកអ្នកត្រូវប្រគល់ការទុកចិត្តទៅចំពោះទ្រង់ ប្រសិនបើពួកអ្នកជាមូស្លីមមែននោះ ។

فَقَالُوا۟ عَلَى ٱللَّهِ تَوَكَّلْنَا رَبَّنَا لَا تَجْعَلْنَا فِتْنَةً لِّلْقَوْمِ ٱلظَّٰلِمِينَ ﴿٨٥﴾

៨៥-ហើយពួកគេបានតបវិញថា: ពួកយើងបានប្រគល់ការទុកចិត្តទៅចំពោះអល់ឡោះហើយ ។ ឱម្ចាស់របស់ពួកយើង! សូមទ្រង់កុំយកពួកយើងធ្វើជាការសាកល្បងចំពោះក្រុមបំពានអ្វី ។

وَنَجِّنَا بِرَحْمَتِكَ مِنَ ٱلْقَوْمِ ٱلْكَٰفِرِينَ ﴿٨٦﴾

៨៦-ហើយសូមទ្រង់មេត្តាជួយសង្គ្រោះពួកយើងខ្ញុំចេញពីពួកគ្មានជំនឿដោយក្តីមេត្តាករុណារបស់ទ្រង់ផងចុះ ។

وَأَوْحَيْنَآ إِلَىٰ مُوسَىٰ وَأَخِيهِ أَن تَبَوَّءَا لِقَوْمِكُمَا بِمِصْرَ بُيُوتًا وَٱجْعَلُوا۟ بُيُوتَكُمْ قِبْلَةً وَأَقِيمُوا۟ ٱلصَّلَوٰةَ ۗ وَبَشِّرِ ٱلْمُؤْمِنِينَ ﴿٨٧﴾

៨៧-យើងបានបញ្ចុះវ៉ាហ៊ីឱ្យមូសានិងបងប្រុសរបស់គេ(ហារូន) ថា: អ្នកទាំងពីរត្រូវតាំងលំនៅដ្ឋាននៅប្រទេសអេហ្ស៊ីបឱ្យក្រុមរបស់អ្នកទាំងពីរ ហើយចូរពួកអ្នកធ្វើឱ្យលំនៅដ្ឋានរបស់ពួកអ្នកជាកន្លែងសម្រាប់តម្រង់ទិស(គោរពសក្ការៈ) ។ ហើយចូរពួកអ្នកប្រតិបត្តិសឡាត និងផ្តល់ដំណឹងរីករាយដល់បណ្តាអ្នកដែលមានជំនឿចុះ ។

وَقَالَ مُوسَىٰ رَبَّنَآ إِنَّكَ ءَاتَيْتَ فِرْعَوْنَ وَمَلَأَهُۥ زِينَةً وَأَمْوَٰلًا فِى ٱلْحَيَوٰةِ ٱلدُّنْيَا رَبَّنَا

៨៨-ហើយមូសាបានពោលថា: ឱម្ចាស់របស់យើងខ្ញុំ! ពិតប្រាកដណាស់ ទ្រង់បានប្រទានដល់ហ្វៀរអោន និងមន្ត្រីរបស់គេនូវភាពត្រចះត្រចង់ និងទ្រព្យសម្បត្តិនៅក្នុងជីវិតលោកិយនេះ ។ ឱ

لِيُضِلُّواْ عَن سَبِيلِكَ ۖ رَبَّنَا ٱطۡمِسۡ عَلَىٰٓ
أَمۡوَٰلِهِمۡ وَٱشۡدُدۡ عَلَىٰ قُلُوبِهِمۡ فَلَا يُؤۡمِنُواْ
حَتَّىٰ يَرَوُاْ ٱلۡعَذَابَ ٱلۡأَلِيمَ ﴿٨٨﴾

ម្ចាស់របស់យើងខ្ញុំ! (ការប្រទានរបស់ទ្រង់នោះ) ធ្វើឱ្យពួកគេវង្វេងពីមាគ៌ារបស់ទ្រង់។ ឱម្ចាស់របស់យើងខ្ញុំ! សូមទ្រង់បំផ្លាញទ្រព្យសម្បត្តិរបស់ពួកគេ និងបោះត្រាភ្ជិតលើចិត្តរបស់ពួកគេផងចុះ ដោយសារតែពួកគេគ្មានជំនឿ រហូតដល់ពួកគេបានឃើញទារុណកម្មដ៏ឈឺចាប់។

قَالَ قَدۡ أُجِيبَت دَّعۡوَتُكُمَا فَٱسۡتَقِيمَا وَلَا
تَتَّبِعَآنِّ سَبِيلَ ٱلَّذِينَ لَا يَعۡلَمُونَ ﴿٨٩﴾

៨៩-អល់ឡោះបានមានបន្ទូលថាៈ ជាការពិតណាស់ យើងបានទទួលយកការបួងសួងសុំរបស់អ្នកទាំងពីរ។ ដូច្នេះ ចូរអ្នកទាំងពីរប្រកាន់ខ្ជាប់នូវមាគ៌ាដ៏ត្រឹមត្រូវនេះចុះ ហើយសូមអ្នកទាំងពីរកុំប្រតិបត្តិតាមមាគ៌ារបស់ពួកដែលមិនដឹងឱ្យសោះ។

۞ وَجَٰوَزۡنَا بِبَنِيٓ إِسۡرَٰٓءِيلَ ٱلۡبَحۡرَ فَأَتۡبَعَهُمۡ
فِرۡعَوۡنُ وَجُنُودُهُۥ بَغۡيٗا وَعَدۡوًا ۖ حَتَّىٰٓ إِذَآ
أَدۡرَكَهُ ٱلۡغَرَقُ قَالَ ءَامَنتُ أَنَّهُۥ لَآ إِلَٰهَ إِلَّا
ٱلَّذِيٓ ءَامَنَتۡ بِهِۦ بَنُوٓاْ إِسۡرَٰٓءِيلَ وَأَنَا۠ مِنَ
ٱلۡمُسۡلِمِينَ ﴿٩٠﴾

៩០-យើងបានញែកទឹកសមុទ្រដើម្បីឱ្យអំបូរអ៊ីស្រាអែលបានដើរឆ្លងផុត ហើយហ្វៀរអោននិងទាហានរបស់គេបានតាមពីក្រោយពួកគេដោយការបំពាន និងភាពជាសត្រូវ។ លុះនៅពេលដែលទឹកបានលិចគ្របដណ្តប់គេ (ហ្វៀរអោន) ទើបគេនិយាយថាៈ ខ្ញុំបានជឿហើយថា ពិតប្រាកដណាស់គ្មានម្ចាស់ណាដែលត្រូវគេគោរពដ៏ពិតប្រាកដក្រៅពីម្ចាស់ដែលអំបូរអ៊ីស្រាអែលបានជឿលើទ្រង់នោះឡើយ។ ហើយខ្ញុំក៏ស្ថិតក្នុងចំណោមអ្នកមូស្លីមដែរ។

ءَآلۡـَٰٔنَ وَقَدۡ عَصَيۡتَ قَبۡلُ وَكُنتَ مِنَ
ٱلۡمُفۡسِدِينَ ﴿٩١﴾

៩១-ពេលនេះឬ (ទើបអ្នកមានជំនឿ) ខណៈដែលអ្នកធ្លាប់ប្រឆាំងកាលពីមុន ហើយអ្នកបានស្ថិតក្នុងចំណោមពួកដែលបង្កវិនាសកម្មនោះ?

فَٱلۡيَوۡمَ نُنَجِّيكَ بِبَدَنِكَ لِتَكُونَ لِمَنۡ
خَلۡفَكَ ءَايَةٗ ۚ وَإِنَّ كَثِيرٗا مِّنَ ٱلنَّاسِ عَنۡ
ءَايَٰتِنَا لَغَٰفِلُونَ ﴿٩٢﴾

៩២-ដូច្នេះនៅថ្ងៃនេះយើងនឹងជួយអ្នក ដោយស្រង់សាកសពរបស់អ្នក (ចេញពីសមុទ្រ) ដើម្បីធ្វើជាភស្តុតាងដល់មនុស្សជំនាន់ក្រោយអ្នក។ តែជាការពិតណាស់ មនុស្សលោកភាគច្រើនព្រងើយកន្តើយនឹងបណ្តាភស្តុតាងរបស់យើង។

وَلَقَدۡ بَوَّأۡنَا بَنِيٓ إِسۡرَٰٓءِيلَ مُبَوَّأَ صِدۡقٖ
وَرَزَقۡنَٰهُم مِّنَ ٱلطَّيِّبَٰتِ فَمَا ٱخۡتَلَفُواْ حَتَّىٰ
جَآءَهُمُ ٱلۡعِلۡمُ ۚ إِنَّ رَبَّكَ يَقۡضِي بَيۡنَهُمۡ يَوۡمَ
ٱلۡقِيَٰمَةِ فِيمَا كَانُواْ فِيهِ يَخۡتَلِفُونَ ﴿٩٣﴾

៩៣-ហើយជាការពិតណាស់ យើងបានរៀបចំទីលំនៅដល់អំបូរអ៊ីស្រាអែលនូវលំនៅដ្ឋានដ៏ពិតប្រាកដ (នៅស្ហាមនិងអេហ្ស៊ីប) ហើយយើងផ្តល់លាភសក្ការៈដ៏ល្អដល់ពួកគេ ហើយពួកគេពុំមានការខ្វែងគំនិតគ្នាឡើយ រហូតដល់ចំណេះដឹង (គម្ពីរតាវរ៉ត) បានមកដល់ពួកគេ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកនឹងកាត់សេចក្តីរវាងពួក

គេនៅថ្ងៃបរលោកនូវអ្វីដែលពួកគេធ្លាប់បានខ្វែងគំនិតគ្នាចំពោះវា (គម្ពីរតាវរ៉ត) ។

فَإِن كُنتَ فِي شَكٍّ مِّمَّآ أَنزَلۡنَآ إِلَيۡكَ فَسۡـَٔلِ ٱلَّذِينَ يَقۡرَءُونَ ٱلۡكِتَٰبَ مِن قَبۡلِكَۚ لَقَدۡ جَآءَكَ ٱلۡحَقُّ مِن رَّبِّكَ فَلَا تَكُونَنَّ مِنَ ٱلۡمُمۡتَرِينَ ٩٤

៩៤-ប្រសិនបើអ្នក(មូហាំម៉ាត់) មានការសង្ស័យអំពីអ្វី(រឿងអ្នក ឧ. លក្ខណៈសម្បត្តិ ឈ្មោះ...) ដែលយើងបានបញ្ចុះប្រាប់អ្នកនោះ ចូរអ្នកសួរទៅពួកដែលអានគម្ពីរ(តាវរ៉ត អ៊ីញជីល) ពីមុនអ្នកចុះ ។ ជាការពិតណាស់ ភាពពិតពីម្ចាស់របស់អ្នកបានមកដល់អ្នករួចមកហើយ ហេតុនេះចូរអ្នកកុំស្ថិតក្នុងចំណោមពួកដែលសង្ស័យឱ្យសោះ ។

وَلَا تَكُونَنَّ مِنَ ٱلَّذِينَ كَذَّبُواْ بِـَٔايَٰتِ ٱللَّهِ فَتَكُونَ مِنَ ٱلۡخَٰسِرِينَ ٩٥

៩៥-ចូរអ្នកកុំស្ថិតក្នុងចំណោមពួកដែលបដិសេធនឹងបណ្ដាភស្តុតាងរបស់អល់ឡោះ ព្រោះ(បើធ្វើដូចនេះ) អ្នកនឹងស្ថិតក្នុងចំណោមពួកដែលខាតបង់ជាមិនខាន ។

إِنَّ ٱلَّذِينَ حَقَّتۡ عَلَيۡهِمۡ كَلِمَتُ رَبِّكَ لَا يُؤۡمِنُونَ ٩٦

៩៦-ពិតប្រាកដណាស់ អ្នកដែលពាក្យសំដី(ធ្វើទារុណកម្ម) នៃម្ចាស់របស់អ្នកបានកំណត់ធ្លាក់ទៅលើពួកគេនោះ គឺពួកគេគ្មានជំនឿឡើយ ។

وَلَوۡ جَآءَتۡهُمۡ كُلُّ ءَايَةٍ حَتَّىٰ يَرَوُاْ ٱلۡعَذَابَ ٱلۡأَلِيمَ ٩٧

៩៧-ទោះបីជាភស្តុតាងនានាបានមកដល់ពួកគេក៏ដោយ(វាគ្មានប្រយោជន៍អ្វីដល់ពួកគេឡើយ) លុះត្រាតែពួកគេឃើញទារុណកម្មដ៏ឈឺចាប់ ។

فَلَوۡلَا كَانَتۡ قَرۡيَةٌ ءَامَنَتۡ فَنَفَعَهَآ إِيمَٰنُهَآ إِلَّا قَوۡمَ يُونُسَ لَمَّآ ءَامَنُواْ كَشَفۡنَا عَنۡهُمۡ عَذَابَ ٱلۡخِزۡيِ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَا وَمَتَّعۡنَٰهُمۡ إِلَىٰ حِينٖ ٩٨

៩៨-ហេតុអ្វីបានជាគ្មានភូមិស្រុកណាមួយមានជំនឿ ហើយជំនឿរបស់វាមានផលប្រយោជន៍ដល់វា ក្រៅពីប្រជាជនរបស់យូនូសនោះ? នៅពេលពួកគេបានជឿ យើងបានលុបបំបាត់ទារុណ-កម្មដ៏អាម៉ាស់នៅក្នុងលោកិយចេញពីពួកគេ ហើយយើងបានផ្ដល់ភាពសុខសាន្តដល់ពួកគេរហូតដល់ពេលកំណត់ ។

وَلَوۡ شَآءَ رَبُّكَ لَأٓمَنَ مَن فِي ٱلۡأَرۡضِ كُلُّهُمۡ جَمِيعًاۚ أَفَأَنتَ تُكۡرِهُ ٱلنَّاسَ حَتَّىٰ يَكُونُواْ مُؤۡمِنِينَ ٩٩

៩៩-ប្រសិនបើម្ចាស់របស់អ្នកមានចេតនា អ្នកដែលនៅលើផែនដីទាំងអស់ពិតជាមានជំនឿ ។ ដូច្នេះ តើអ្នកបង្ខំមនុស្សលោករហូតដល់ពួកគេក្លាយជាអ្នកមានជំនឿឬ?

وَمَا كَانَ لِنَفۡسٍ أَن تُؤۡمِنَ إِلَّا بِإِذۡنِ

១០០-ហើយគ្មានបុគ្គលណាម្នាក់មានជំនឿឡើយ លើកលែងតែមានការអនុញ្ញាតពីអល់ឡោះប៉ុណ្ណោះ ។ ហើយទ្រង់នឹងដាក់

ٱللَّهِ ۚ وَيَجۡعَلُ ٱلرِّجۡسَ عَلَى ٱلَّذِينَ لَا
يَعۡقِلُونَ ١٠٠

ទារុណកម្ម និងភាពអាម៉ាស់ទៅលើពួកដែលមិនគិតពិចារណា ។

قُلِ ٱنظُرُواْ مَاذَا فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ ۚ
وَمَا تُغۡنِي ٱلۡأٓيَٰتُ وَٱلنُّذُرُ عَن قَوۡمٖ لَّا
يُؤۡمِنُونَ ١٠١

១០១-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចូរពួកអ្នកពិចារណាមើលចុះ តើអ្វីដែលមាននៅលើមេឃជាច្រើនជាន់ និងផែនដី? ប៉ុន្តែភស្តុតាងនិងការដាស់តឿនព្រមាននានាពុំមានប្រយោជន៍ដល់ក្រុមដែលគ្មានជំនឿឡើយ ។

فَهَلۡ يَنتَظِرُونَ إِلَّا مِثۡلَ أَيَّامِ ٱلَّذِينَ
خَلَوۡاْ مِن قَبۡلِهِمۡ ۚ قُلۡ فَٱنتَظِرُوٓاْ إِنِّي مَعَكُم
مِّنَ ٱلۡمُنتَظِرِينَ ١٠٢

១០២-ដូច្នេះ ពួកគេមិនរង់ចាំអ្វីក្រៅពី(សេចក្តីវិនាស)ដូចថ្ងៃ(វិនាស)របស់ពួកដែលបានកន្លងផុតទៅមុនពួកគេនោះឡើយ ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ដូច្នេះ ពួកអ្នករង់ចាំចុះ ពិតប្រាកដណាស់ខ្ញុំក៏ស្ថិតក្នុងចំណោមអ្នកដែលរង់ចាំជាមួយពួកអ្នកដែរ ។

ثُمَّ نُنَجِّي رُسُلَنَا وَٱلَّذِينَ ءَامَنُواْ ۚ كَذَٰلِكَ
حَقًّا عَلَيۡنَا نُنجِ ٱلۡمُؤۡمِنِينَ ١٠٣

១០៣-បន្ទាប់មកយើងជួយសង្គ្រោះបណ្តាអ្នកនាំសាររបស់យើង និងបណ្តាអ្នកដែលមានជំនឿ ។ ដូច្នោះដែរ កាតព្វកិច្ចរបស់យើងគឺត្រូវជួយសង្គ្រោះបណ្តាអ្នកដែលមានជំនឿ ។

قُلۡ يَٰٓأَيُّهَا ٱلنَّاسُ إِن كُنتُمۡ فِي شَكّٖ مِّن دِينِي
فَلَآ أَعۡبُدُ ٱلَّذِينَ تَعۡبُدُونَ مِن دُونِ ٱللَّهِ وَلَٰكِنۡ
أَعۡبُدُ ٱللَّهَ ٱلَّذِي يَتَوَفَّىٰكُمۡ ۖ وَأُمِرۡتُ أَنۡ أَكُونَ
مِنَ ٱلۡمُؤۡمِنِينَ ١٠٤

១០៤-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ឱមនុស្សលោក! ប្រសិនបើពួកអ្នកមានការសង្ស័យអំពីសាសនារបស់ខ្ញុំ គឺខ្ញុំមិនគោរពសក្ការៈចំពោះអ្វីដែលពួកអ្នកគោរពសក្ការៈផ្សេងពីអល់ឡោះនោះឡើយ ។ ក៏ប៉ុន្តែខ្ញុំគោរពសក្ការៈចំពោះអល់ឡោះដែលទ្រង់ជាអ្នកបញ្ចប់ជីវិតរបស់ពួកអ្នក ។ ហើយខ្ញុំត្រូវបានគេបង្គាប់ប្រើឱ្យស្ថិតក្នុងចំណោមអ្នកដែលមានជំនឿ ។

وَأَنۡ أَقِمۡ وَجۡهَكَ لِلدِّينِ حَنِيفٗا وَلَا تَكُونَنَّ
مِنَ ٱلۡمُشۡرِكِينَ ١٠٥

១០៥-ហើយចូរអ្នក(មូហាំម៉ាត់)តម្រង់មុខរបស់អ្នកទៅរកសាសនាដ៏ត្រឹមត្រូវ ហើយចូរអ្នកកុំស្ថិតក្នុងចំណោមពួកមូស្ហរីគីនឱ្យសោះ ។

وَلَا تَدۡعُ مِن دُونِ ٱللَّهِ مَا لَا يَنفَعُكَ
وَلَا يَضُرُّكَ ۖ فَإِن فَعَلۡتَ فَإِنَّكَ إِذٗا مِّنَ
ٱلظَّٰلِمِينَ ١٠٦

១០៦-ចូរអ្នកកុំបួងសួងសុំចំពោះអ្វីដែលមិនផ្តល់ផលប្រយោជន៍ដល់អ្នក និងមិនបង្កគ្រោះថ្នាក់ដល់អ្នកផ្សេងពីអល់ឡោះឱ្យសោះ ។ តែប្រសិនបើអ្នកបានធ្វើដូច្នេះ អ្នកពិតជាស្ថិតនៅក្នុងចំណោមពួកដែលបំពាន ។

وَإِن يَمۡسَسۡكَ ٱللَّهُ بِضُرّٖ فَلَا كَاشِفَ لَهُۥٓ إِلَّا

១០៧-ហើយប្រសិនបើអល់ឡោះឱ្យអ្នកទទួលរងគ្រោះថ្នាក់

هُوَ ۖ وَإِن يُرِدْكَ بِخَيْرٍ فَلَا رَآدَّ لِفَضْلِهِۦ ۚ يُصِيبُ بِهِۦ مَن يَشَآءُ مِنْ عِبَادِهِۦ ۚ وَهُوَ ٱلْغَفُورُ ٱلرَّحِيمُ ١٠٧

គ្មានអ្នកណាអាចបំបាត់វាបានក្រៅពីទ្រង់ឡើយ ។ តែប្រសិនបើទ្រង់មានចេតនាផ្ដល់ឱ្យអ្នកនូវសេចក្ដីសុខសាន្ដវិញនោះ ក៏គ្មានអ្នកណាអាចរារាំងចំពោះការប្រោសប្រទានរបស់ទ្រង់បានដែរ ។ ទ្រង់នឹងផ្ដល់វាឱ្យអ្នកណាដែលទ្រង់មានចេតនាក្នុងចំណោមខ្ញុំរបស់ទ្រង់ ។ ហើយទ្រង់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

قُلْ يَٰٓأَيُّهَا ٱلنَّاسُ قَدْ جَآءَكُمُ ٱلْحَقُّ مِن رَّبِّكُمْ ۖ فَمَنِ ٱهْتَدَىٰ فَإِنَّمَا يَهْتَدِى لِنَفْسِهِۦ ۖ وَمَن ضَلَّ فَإِنَّمَا يَضِلُّ عَلَيْهَا ۖ وَمَآ أَنَا۠ عَلَيْكُم بِوَكِيلٍ ١٠٨

១០៨-ចូរអ្នក( មូហាំម៉ាត់ ) ពោលថា: ឱមនុស្សលោក! ពិតជាបានមកដល់ពួកអ្នកនូវសច្ចភាពអំពីម្ចាស់របស់ពួកអ្នក ។ ហើយបុគ្គលណាដែលបានទទួលការចង្អុលបង្ហាញ គេនឹងទទួលបានផលល្អសម្រាប់តែខ្លួនគេប៉ុណ្ណោះ ។ តែបើបុគ្គលណាបានវង្វេងវិញគេនឹងធ្វើឱ្យមានគ្រោះថ្នាក់ដល់ខ្លួនឯង ។ ហើយខ្ញុំមិនមែនជាអ្នកទទួលខុសត្រូវលើពួកអ្នកឡើយ ។

وَٱتَّبِعْ مَا يُوحَىٰٓ إِلَيْكَ وَٱصْبِرْ حَتَّىٰ يَحْكُمَ ٱللَّهُ ۚ وَهُوَ خَيْرُ ٱلْحَٰكِمِينَ ١٠٩

១០៩-ហើយចូរអ្នក( មូហាំម៉ាត់ ) អនុវត្តតាមអ្វីដែលគេផ្ដល់វ៉ាហ៊ីមកឱ្យអ្នក ហើយចូរអ្នកអត់ធ្មត់រហូតដល់ពេលអល់ឡោះកាត់សេចក្ដី ។ ហើយទ្រង់គឺជាអ្នកកាត់សេចក្ដីដ៏យុត្តិធម៌បំផុត ។

## سورة هود

## ជំពូកហ៊ូទ

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់ ។

الٓر ۚ كِتَٰبٌ أُحْكِمَتْ ءَايَٰتُهُۥ ثُمَّ فُصِّلَتْ مِن لَّدُنْ حَكِيمٍ خَبِيرٍ ١

១-អាលីហ្វ ឡាម រ៉ ។ (នេះជា) គម្ពីរមួយដែលអាយ៉ាត់ៗរបស់វាមានភាពសុក្រិតដ៏ល្អឥតខ្ចោះ ហើយបន្ទាប់មកត្រូវបានគេបញ្ជាក់ (អំពីប្រការដែលបង្គាប់ប្រើឬហាមឃាត់) យ៉ាងជាក់ច្បាស់មកពីទ្រង់តែមួយគត់ដែលមហាគតិបណ្ឌិត មហាដឹង ។

أَلَّا تَعْبُدُوٓا۟ إِلَّا ٱللَّهَ ۚ إِنَّنِى لَكُم مِّنْهُ نَذِيرٌ وَبَشِيرٌ ٢

២-ដើម្បីកុំឱ្យពួកអ្នកគោរពសក្ការៈក្រៅពីអល់ឡោះ ។ ពិតប្រាកដណាស់ ខ្ញុំគឺជាអ្នកដាស់តឿនព្រមាន និងផ្ដល់ដំណឹងរីករាយមកពីទ្រង់ដល់ពួកអ្នកទាំងអស់គ្នា ។

وَأَنِ ٱسْتَغْفِرُوا۟ رَبَّكُمْ ثُمَّ تُوبُوٓا۟ إِلَيْهِ يُمَتِّعْكُم مَّتَٰعًا حَسَنًا إِلَىٰٓ أَجَلٍ مُّسَمًّى وَيُؤْتِ كُلَّ ذِى فَضْلٍ فَضْلَهُۥ ۖ وَإِن تَوَلَّوْا۟ فَإِنِّىٓ أَخَافُ

៣-ហើយចូរពួកអ្នកសុំអភ័យទោសពីម្ចាស់របស់ពួកអ្នក បន្ទាប់មកចូរពួកអ្នកសារភាពកំហុសចំពោះទ្រង់ ដែលទ្រង់នឹងផ្ដល់ឱ្យពួកអ្នកនូវភាពរីករាយដ៏ប្រពៃរហូតដល់ពេលវេលាមួយដែលគេបានកំណត់ ។ ហើយទ្រង់នឹងផ្ដល់ឱ្យរាល់អ្នកដែលមាន ភាពខ្ពង់ខ្ពស់នូវឧត្តមភាពរបស់គេ ។ ប៉ុន្ដែប្រសិនបើពួកអ្នកបែរចេញវិញ ពិតប្រាកដ

ណាស់ ខ្ញុំបារម្ភចំពោះពួកអ្នកនូវទារុណកម្មនាថ្ងៃដ៏មហិមា( ថ្ងៃបរ-លោក) ។

៤-កន្លែងវិលត្រឡប់របស់ពួកអ្នកគឺទៅកាន់អល់ឡោះតែមួយគត់ ។ ហើយទ្រង់មានអានុភាពលើអ្វីៗទាំងអស់ ។

៥-ចូរដឹងថា! ពិតប្រាកដណាស់ ពួកគេ( ពួកមូស្ហរីគីន) បង្វែរចិត្តរបស់ពួកគេដើម្បីលាក់បាំងពីទ្រង់( នូវភាពពុតត្បុត) ។ តើពួកគេមិនដឹងទេឬ ខណៈដែលពួកគេកំពុងគ្របដណ្តប់ ( ខ្លួនប្រាណរបស់ពួកគេ) ដោយសំលៀកបំពាក់របស់ពួកគេ ទ្រង់ជាអ្នកដឹងអំពីអ្វីដែលពួកគេកំពុងលាក់បាំង និងអ្វីដែលពួកគេកំពុងលាតត្រដាង ។ ពិតប្រាកដណាស់ ទ្រង់ជាអ្នកដឹងនូវអ្វីដែលមាននៅក្នុងចិត្តទាំងអស់ ។

៦-គ្មានសត្វលោកណាមួយដែលរស់នៅលើផែនដីក្រៅពីអល់ឡោះផ្តល់លាភសក្ការៈដល់ពួកគេឡើយ ហើយទ្រង់ដឹងពីកន្លែងស្នាក់នៅរបស់វា( ក្នុងលោកិយ និងថ្ងៃបរលោក) ហើយទ្រង់ដឹងទៀតពីកន្លែងដែលវាស្លាប់ ។ ទាំងអស់នោះមាននៅក្នុងគម្ពីរ( ឡាវហុលម៉ាសហ្វ៊ូស) យ៉ាងជាក់ច្បាស់ ។

៧-ហើយទ្រង់ជាអ្នកដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដីក្នុងរយៈពេលប្រាំមួយថ្ងៃ ហើយអារ៉ស្ហរបស់ទ្រង់ស្ថិតនៅលើទឹក ដើម្បីទ្រង់នឹងសាកល្បងពួកអ្នក ថាតើអ្នកណាម្នាក់ក្នុងចំណោមពួកអ្នកដែលមានអំពើល្អប្រសើរជាងគេ ។ តែប្រសិនបើអ្នក( មូហាំ-ម៉ាត់) បានពោលថា: ពិតប្រាកដណាស់ ពួកអ្នកនឹងត្រូវគេធ្វើឱ្យរស់ឡើងវិញក្រោយពីស្លាប់នោះ ប្រាកដជាពួកដែលប្រឆាំងនឹងនិយាយថា: ទាំងនេះគ្មានអ្វីក្រៅពីមន្តអាគមដ៏ច្បាស់លាស់ឡើយ ។

៨-ប្រសិនបើយើងពន្យារពេលដាក់ទណ្ឌកម្មចំពោះពួកគេ រហូតដល់ពេលកំណត់នោះ ប្រាកដជាពួកគេនឹងនិយាយថា: តើអ្វីទៅដែលរារាំងវា( ទារុណកម្ម) នោះ? ចូរដឹងថា! នៅថ្ងៃដែលវាមកដល់ពួកគេ គ្មានអ្នកណាម្នាក់អាចយកវាចេញពីពួកគេបានឡើយ ។ ហើយអ្វី ( ទារុណកម្ម) ដែលពួកគេធ្លាប់បានសើចចំអកចំពោះវាបានហ៊ុមព័ទ្ធ

عَلَيۡكُمۡ عَذَابَ يَوۡمٖ كَبِيرٍ ﴿٣﴾

إِلَى ٱللَّهِ مَرۡجِعُكُمۡۖ وَهُوَ عَلَىٰ كُلِّ شَيۡءٖ
قَدِيرٌ ﴿٤﴾

أَلَآ إِنَّهُمۡ يَثۡنُونَ صُدُورَهُمۡ لِيَسۡتَخۡفُواْ مِنۡهُۚ
أَلَا حِينَ يَسۡتَغۡشُونَ ثِيَابَهُمۡ يَعۡلَمُ مَا
يُسِرُّونَ وَمَا يُعۡلِنُونَۚ إِنَّهُۥ عَلِيمُۢ بِذَاتِ
ٱلصُّدُورِ ﴿٥﴾

۞ وَمَا مِن دَآبَّةٖ فِي ٱلۡأَرۡضِ إِلَّا عَلَى ٱللَّهِ
رِزۡقُهَا وَيَعۡلَمُ مُسۡتَقَرَّهَا وَمُسۡتَوۡدَعَهَاۚ كُلّٞ فِي
كِتَٰبٖ مُّبِينٖ ﴿٦﴾

وَهُوَ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ فِي
سِتَّةِ أَيَّامٖ وَكَانَ عَرۡشُهُۥ عَلَى ٱلۡمَآءِ
لِيَبۡلُوَكُمۡ أَيُّكُمۡ أَحۡسَنُ عَمَلٗاۗ وَلَئِن
قُلۡتَ إِنَّكُم مَّبۡعُوثُونَ مِنۢ بَعۡدِ ٱلۡمَوۡتِ
لَيَقُولَنَّ ٱلَّذِينَ كَفَرُوٓاْ إِنۡ هَٰذَآ إِلَّا سِحۡرٞ
مُّبِينٞ ﴿٧﴾

وَلَئِنۡ أَخَّرۡنَا عَنۡهُمُ ٱلۡعَذَابَ إِلَىٰٓ أُمَّةٖ مَّعۡدُودَةٖ
لَّيَقُولُنَّ مَا يَحۡبِسُهُۥٓۗ أَلَا يَوۡمَ يَأۡتِيهِمۡ
لَيۡسَ مَصۡرُوفًا عَنۡهُمۡ وَحَاقَ بِهِم مَّا

كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ﴿٨﴾

ពួកគេ ។

وَلَئِنۡ أَذَقۡنَا ٱلۡإِنسَٰنَ مِنَّا رَحۡمَةٗ ثُمَّ نَزَعۡنَٰهَا
مِنۡهُ إِنَّهُۥ لَيَـُٔوسٞ كَفُورٞ ﴿٩﴾

៩-តែប្រសិនបើយើងបានឱ្យមនុស្សលោកស្គាល់រសជាតិនៃក្ដីមេត្តាករុណាពីយើង បន្ទាប់មកយើងបានដកយកវាពីគេវិញ គេពិតជាអស់សង្ឃឹមនិងប្រឆាំងថែមទៀតជាមិនខាន ។

وَلَئِنۡ أَذَقۡنَٰهُ نَعۡمَآءَ بَعۡدَ ضَرَّآءَ مَسَّتۡهُ لَيَقُولَنَّ
ذَهَبَ ٱلسَّيِّـَٔاتُ عَنِّيٓۚ إِنَّهُۥ لَفَرِحٞ فَخُورٌ ﴿١٠﴾

១០-ហើយប្រសិនបើយើងបានឱ្យគេស្គាល់រសជាតិនៃសេចក្ដីសុខក្រោយពីភាពលំបាកបានកើតមានចំពោះគេនោះ គេពិតជានិយាយថាៈ ទុក្ខលំបាកទាំងឡាយបានចាកឆ្ងាយពីខ្ញុំហើយ ។ គេប្រាកដជារីករាយនិងមោទនភាពបំផុត ។

إِلَّا ٱلَّذِينَ صَبَرُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ أُوْلَـٰٓئِكَ
لَهُم مَّغۡفِرَةٞ وَأَجۡرٞ كَبِيرٞ ﴿١١﴾

១១-លើកលែងតែបណ្ដាអ្នកដែលបានអត់ធ្មត់ និងបានធ្វើអំពើល្អប៉ុណ្ណោះ ។ អ្នកទាំងនោះនឹងទទួលបានការអភ័យទោស និងផលបុណ្យដ៏មហិមា( ឋានសួគ៌) ។

فَلَعَلَّكَ تَارِكُۢ بَعۡضَ مَا يُوحَىٰٓ إِلَيۡكَ
وَضَآئِقُۢ بِهِۦ صَدۡرُكَ أَن يَقُولُواْ لَوۡلَآ
أُنزِلَ عَلَيۡهِ كَنزٌ أَوۡ جَآءَ مَعَهُۥ مَلَكٌۚ إِنَّمَآ أَنتَ
نَذِيرٞۚ وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ وَكِيلٌ ﴿١٢﴾

១២-ដូច្នេះប្រហែលជាអ្នក( មូហាំម៉ាត់) នឹងបោះបង់ចោលមួយចំនួននូវអ្វីដែលគេផ្ដល់វ៉ាហ៊ីមកឱ្យអ្នក ហើយធ្វើឱ្យទ្រូងរបស់អ្នកមានភាពចង្អៀតដោយសារវា ដោយខ្លាចក្រែងពួកគេនឹងនិយាយថាៈ ហេតុអ្វីបានជាគេមិនបញ្ចុះកំណប់ទ្រព្យមកឱ្យគាត់ ឬបញ្ជូនម៉ាឡាអ៊ីកាត់ម្នាក់មកជាមួយគាត់? តាមពិតអ្នកគ្រាន់តែជាអ្នកដាស់តឿនព្រមានប៉ុណ្ណោះ ។ ហើយអល់ឡោះជាអ្នកថែរក្សាការពារលើអ្វីៗទាំងអស់ ។

أَمۡ يَقُولُونَ ٱفۡتَرَىٰهُۖ قُلۡ فَأۡتُواْ بِعَشۡرِ سُوَرٖ
مِّثۡلِهِۦ مُفۡتَرَيَٰتٖ وَٱدۡعُواْ مَنِ ٱسۡتَطَعۡتُم مِّن
دُونِ ٱللَّهِ إِن كُنتُمۡ صَٰدِقِينَ ﴿١٣﴾

១៣-ឬពួកគេនឹងនិយាយថាៈ គាត់( មូហាំម៉ាត់) បានប្រឌិតវា( គម្ពីរគួរអាន) ។ ចូរអ្នកពោលថាៈ ចូរពួកអ្នកយកដប់ជំពូកដូចការប្រឌិតទាំងនេះមក ហើយចូរពួកអ្នកកោះហៅអ្នកណាក៏ដោយដែលពួកអ្នកអាចហៅបានក្រៅពីអល់ឡោះ( ឱ្យជួយ) ប្រសិនបើពួកអ្នកជាពួកដែលនិយាយពិតមែននោះ ។

فَإِلَّمۡ يَسۡتَجِيبُواْ لَكُمۡ فَٱعۡلَمُوٓاْ أَنَّمَآ أُنزِلَ
بِعِلۡمِ ٱللَّهِ وَأَن لَّآ إِلَٰهَ إِلَّا هُوَۖ فَهَلۡ أَنتُم
مُّسۡلِمُونَ ﴿١٤﴾

១៤-តែប្រសិនបើពួកគេមិនបានឆ្លើយតបចំពោះពួកអ្នកទេនោះ ចូរពួកអ្នកដឹងថា ពិតប្រាកដណាស់អ្វីដែលគេបានបញ្ចុះ( គម្ពីរគួរ-អាន) គឺដោយចំណេះដឹងរបស់អល់ឡោះ ។ ហើយគ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ តើពួកអ្នកនឹងក្លាយទៅជាមូស្លីមឬទេ?

១៥-អ្នកណាដែលប្រាថ្នាចង់បានការរស់នៅក្នុងលោកិយ និងភាពត្រចះត្រចង់របស់វា យើងនឹងប្រទានឱ្យពួកគេយ៉ាងពេញលេញទៅតាមទង្វើរបស់ពួកគេនៅក្នុងលោកិយនេះ ។ ហើយពួកគេនៅក្នុងលោកិយនេះនឹងមិនត្រូវគេកាត់បន្ថយ(ផល)ឡើយ ។

១៦-ពួកទាំងនោះហើយគឺជាពួកដែលនៅថ្ងៃបរលោកគ្មានអ្វីសម្រាប់ពួកគេក្រៅពីភ្លើងនរកនោះ ។ ហើយអ្វីដែលពួកគេបានសាងនៅក្នុងលោកិយនេះបានរលាយសាបសូន្យអស់ ។ ហើយអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តកន្លងមកទុកជាមោឃៈ ។

១៧-តើមានអ្នកណាដូចអ្នកដែលស្ថិតលើភស្តុតាងយ៉ាងច្បាស់លាស់(គម្ពីរគួរអាន)ពីម្ចាស់របស់គេ ហើយមានសាក្សី(ជីព្រីល)មកពីទ្រង់សូត្រវា និងមានគម្ពីររបស់មូសាពីមុនវាដែលជាការចង្អុលបង្ហាញ និងការអាណិតស្រឡាញ់នោះ? អ្នកទាំងនោះមានជំនឿលើវា(គម្ពីរគួរអាន) ។ ប៉ុន្តែអ្នកដែលបដិសេធនឹងវាក្នុងចំណោមក្រុមទាំងនោះ(យ៉ាហ៊ូទី ណាសរ៉នី និងពួកគ្មានជំនឿ) គឺភ្លើងនរកជាកន្លែងសន្យារបស់គេ ។ ដូច្នេះចូរអ្នកកុំមានការសង្ស័យអំពីវាឱ្យសោះ ។ ពិតប្រាកដណាស់ វាជាការពិតមកពីម្ចាស់របស់អ្នក ប៉ុន្តែមនុស្សលោកភាគច្រើនគ្មានជំនឿឡើយ ។

១៨-ហើយតើមានអ្នកណាដែលបំពានជាងអ្នកដែលបានប្រឌិតរឿងភូតកុហកប្រឆាំងនឹងអល់ឡោះទៅទៀតនោះ? ពួកទាំងនោះនឹងត្រូវគេលាតត្រដាងនៅចំពោះមុខម្ចាស់របស់ពួកគេ(នៅថ្ងៃបរ-លោក) ហើយសាក្សីជាច្រើននឹងនិយាយប្រាប់ថាៈ ពួកទាំងនោះគឺជាពួកដែលបានភូតកុហកចំពោះម្ចាស់របស់ពួកគេ ។ ចូរដឹងថា! បណ្តាសារបស់អល់ឡោះគឺធ្លាក់លើពួកដែលបំពាន ។

១៩-ពួកដែលហាមឃាត់អ្នកដទៃអំពីមាគ៌ារបស់អល់ឡោះ ហើយពួកគេមានបំណងចង់ឱ្យវាទៅជាមាគ៌ាវៀចវេរ ពួកគេគឺជាពួកដែលគ្មានជំនឿនឹងថ្ងៃបរលោក ។

២០-ពួកទាំងនោះគ្មានលទ្ធភាពគេចផុត(ពីទណ្ឌកម្មរបស់អល់ឡោះ)នៅលើផែនដីនេះបានឡើយ ហើយពួកគេក៏មិនធ្លាប់

مَن كَانَ يُرِيدُ ٱلۡحَيَوٰةَ ٱلدُّنۡيَا وَزِينَتَهَا نُوَفِّ إِلَيۡهِمۡ أَعۡمَٰلَهُمۡ فِيهَا وَهُمۡ فِيهَا لَا يُبۡخَسُونَ ١٥

أُوْلَٰٓئِكَ ٱلَّذِينَ لَيۡسَ لَهُمۡ فِي ٱلۡأٓخِرَةِ إِلَّا ٱلنَّارُۖ وَحَبِطَ مَا صَنَعُواْ فِيهَا وَبَٰطِلٞ مَّا كَانُواْ يَعۡمَلُونَ ١٦

أَفَمَن كَانَ عَلَىٰ بَيِّنَةٖ مِّن رَّبِّهِۦ وَيَتۡلُوهُ شَاهِدٞ مِّنۡهُ وَمِن قَبۡلِهِۦ كِتَٰبُ مُوسَىٰٓ إِمَامٗا وَرَحۡمَةًۚ أُوْلَٰٓئِكَ يُؤۡمِنُونَ بِهِۦۚ وَمَن يَكۡفُرۡ بِهِۦ مِنَ ٱلۡأَحۡزَابِ فَٱلنَّارُ مَوۡعِدُهُۥۚ فَلَا تَكُ فِي مِرۡيَةٖ مِّنۡهُۚ إِنَّهُ ٱلۡحَقُّ مِن رَّبِّكَ وَلَٰكِنَّ أَكۡثَرَ ٱلنَّاسِ لَا يُؤۡمِنُونَ ١٧

وَمَنۡ أَظۡلَمُ مِمَّنِ ٱفۡتَرَىٰ عَلَى ٱللَّهِ كَذِبًاۚ أُوْلَٰٓئِكَ يُعۡرَضُونَ عَلَىٰ رَبِّهِمۡ وَيَقُولُ ٱلۡأَشۡهَٰدُ هَٰٓؤُلَآءِ ٱلَّذِينَ كَذَبُواْ عَلَىٰ رَبِّهِمۡۚ أَلَا لَعۡنَةُ ٱللَّهِ عَلَى ٱلظَّٰلِمِينَ ١٨

ٱلَّذِينَ يَصُدُّونَ عَن سَبِيلِ ٱللَّهِ وَيَبۡغُونَهَا عِوَجٗا وَهُم بِٱلۡأٓخِرَةِ هُمۡ كَٰفِرُونَ ١٩

أُوْلَٰٓئِكَ لَمۡ يَكُونُواْ مُعۡجِزِينَ فِي ٱلۡأَرۡضِ

وَمَا كَانَ لَهُم مِّن دُونِ ٱللَّهِ مِنۡ أَوۡلِيَآءَۘ يُضَٰعَفُ لَهُمُ ٱلۡعَذَابُۚ مَا كَانُواْ يَسۡتَطِيعُونَ ٱلسَّمۡعَ وَمَا كَانُواْ يُبۡصِرُونَ ٢٠

មានអ្នកគាំពារក្រៅពីអល់ឡោះដែរ ។ គេនឹងបន្ថែមទារុណកម្មដល់ពួកគេទ្វេដង ។ ពួកគេគ្មានលទ្ធភាពស្ដាប់ឮ(គម្ពីរគួរអាន) ឡើយ ហើយពួកគេក៏មិនធ្លាប់មើលឃើញ(ភស្តុតាងរបស់អល់ឡោះ)ដែរ ។

أُوْلَٰٓئِكَ ٱلَّذِينَ خَسِرُوٓاْ أَنفُسَهُمۡ وَضَلَّ عَنۡهُم مَّا كَانُواْ يَفۡتَرُونَ ٢١

២១-ពួកទាំងនោះគឺជាពួកដែលបានខាតបង់ខ្លួនឯង ហើយអ្វីដែលពួកគេធ្លាប់បានប្រឌិតនោះក៏បានបាត់បង់ពីពួកគេដែរ ។

لَا جَرَمَ أَنَّهُمۡ فِي ٱلۡأٓخِرَةِ هُمُ ٱلۡأَخۡسَرُونَ ٢٢

២២-គ្មានការសង្ស័យឡើយថា ពួកគេពិតជាពួកដែលខាតបង់បំផុតនៅថ្ងៃបរលោក ។

إِنَّ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ وَأَخۡبَتُوٓاْ إِلَىٰ رَبِّهِمۡ أُوْلَٰٓئِكَ أَصۡحَٰبُ ٱلۡجَنَّةِۖ هُمۡ فِيهَا خَٰلِدُونَ ٢٣

២៣-ពិតប្រាកដណាស់ បណ្ដាអ្នកដែលមានជំនឿនិងបានសាងអំពើល្អត្រឹមត្រូវ ព្រមទាំងបានឱនលំទោនទៅកាន់ម្ចាស់របស់ពួកគេ អ្នកទាំងនោះហើយគឺជាអ្នកឋានសួគ៌ ដោយពួកគេស្ថិតនៅទីនោះជាអមតៈ ។

۞ مَثَلُ ٱلۡفَرِيقَيۡنِ كَٱلۡأَعۡمَىٰ وَٱلۡأَصَمِّ وَٱلۡبَصِيرِ وَٱلسَّمِيعِۚ هَلۡ يَسۡتَوِيَانِ مَثَلًاۚ أَفَلَا تَذَكَّرُونَ ٢٤

២៤-ការប្រៀបធៀបរវាងពីរក្រុម(អ្នកគ្មានជំនឿនិងអ្នកមានជំនឿ) ដូចជាអ្នកពិការភ្នែកហើយថ្លង់ និងអ្នកមើលឃើញហើយស្ដាប់ឮ ។ តើការប្រៀបធៀបក្រុមទាំងពីរនេះស្មើគ្នាដែរឬទេ? តើពួកអ្នកមិនពិចារណាទេឬ?

وَلَقَدۡ أَرۡسَلۡنَا نُوحًا إِلَىٰ قَوۡمِهِۦٓ إِنِّي لَكُمۡ نَذِيرٞ مُّبِينٌ ٢٥

២៥-ហើយជាការពិតណាស់ យើងបានបញ្ជូននួហទៅកាន់ក្រុមរបស់គេ(ហើយគេបានពោលថា)៖ ពិតប្រាកដណាស់ ខ្ញុំជាអ្នកដាស់តឿនព្រមានយ៉ាងច្បាស់(អំពីទារុណកម្មរបស់អល់ឡោះ)ដល់ពួកអ្នក ។

أَن لَّا تَعۡبُدُوٓاْ إِلَّا ٱللَّهَۖ إِنِّيٓ أَخَافُ عَلَيۡكُمۡ عَذَابَ يَوۡمٍ أَلِيمٖ ٢٦

២៦-ដោយពួកអ្នកមិនត្រូវគោរពសក្ការៈផ្សេងពីអល់ឡោះឡើយ ។ ពិតប្រាកដណាស់ ខ្ញុំព្រួយបារម្ភចំពោះពួកអ្នកនូវទារុណកម្មដ៏ឈឺចាប់នៅថ្ងៃមួយ ។

فَقَالَ ٱلۡمَلَأُ ٱلَّذِينَ كَفَرُواْ مِن قَوۡمِهِۦ مَا نَرَىٰكَ إِلَّا بَشَرٗا مِّثۡلَنَا وَمَا نَرَىٰكَ ٱتَّبَعَكَ إِلَّا ٱلَّذِينَ هُمۡ أَرَاذِلُنَا بَادِيَ ٱلرَّأۡيِ وَمَا

២៧-ហើយមេដឹកនាំរបស់ពួកដែលគ្មានជំនឿក្នុងចំណោមក្រុមរបស់គេ(នួហ)បាននិយាយថា៖ ពួកយើងមិនមើលឃើញអ្នកក្រៅពីមនុស្សធម្មតាដូចពួកយើងនោះឡើយ ហើយពួកយើងក៏មិនមើលឃើញអ្នកណាប្រតិបត្តិតាមអ្នកក្រៅពីពួកដែលទន់ខ្សោយនៃពួក

نَرَىٰ لَكُمْ عَلَيْنَا مِن فَضْلٍۭ بَلْ نَظُنُّكُمْ كَـٰذِبِينَ ﴿٢٧﴾

យើងដែរ ដែលឆាប់ជឿដោយគ្មានការពិចារណានោះ។ ពួកយើងមិនឃើញពួកអ្នកមានគុណសម្បត្តិប្រសើរជាងពួកយើងឡើយ។ ផ្ទុយទៅវិញពួកយើងគិតថា ពួកអ្នកជាពួកដែលភូតកុហក។

قَالَ يَـٰقَوْمِ أَرَءَيْتُمْ إِن كُنتُ عَلَىٰ بَيِّنَةٍ مِّن رَّبِّى وَءَاتَىٰنِى رَحْمَةً مِّنْ عِندِهِۦ فَعُمِّيَتْ عَلَيْكُمْ أَنُلْزِمُكُمُوهَا وَأَنتُمْ لَهَا كَـٰرِهُونَ ﴿٢٨﴾

២៨-គាត់(នូហ) បានពោលថា: ឱក្រុមរបស់ខ្ញុំ! ពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើខ្ញុំមានភស្តុតាងយ៉ាងច្បាស់លាស់អំពីម្ចាស់របស់ខ្ញុំ ហើយទ្រង់បានប្រទានដល់ខ្ញុំនូវក្ដីមេត្តាករុណា(ភាពជាអ្នកនាំសារ) អំពីទ្រង់ តែគេបានបិទបាំងវាអំពីពួកអ្នក តើចាំបាច់យើងជំរុញពួកអ្នកឱ្យទទួលយកវា ខណៈដែលពួកអ្នកមិនពេញចិត្តចំពោះវានោះឬ?

وَيَـٰقَوْمِ لَآ أَسْـَٔلُكُمْ عَلَيْهِ مَالًا ۖ إِنْ أَجْرِىَ إِلَّا عَلَى ٱللَّهِ ۚ وَمَآ أَنَا۠ بِطَارِدِ ٱلَّذِينَ ءَامَنُوٓا۟ ۚ إِنَّهُم مُّلَـٰقُوا۟ رَبِّهِمْ وَلَـٰكِنِّىٓ أَرَىٰكُمْ قَوْمًا تَجْهَلُونَ ﴿٢٩﴾

២៩-ឱក្រុមរបស់ខ្ញុំ! ខ្ញុំមិនស្នើសុំទ្រព្យសម្បត្តិពីពួកអ្នកលើការអំពាវនាវរបស់ខ្ញុំឡើយ។ តែផលបុណ្យនៃការអំពាវនាវរបស់ខ្ញុំគឺនៅលើអល់ឡោះ។ ហើយខ្ញុំក៏មិនមែនជាអ្នកដែលបណ្ដេញបណ្ដាអ្នកដែលមានជំនឿដែរ។ ពិតប្រាកដណាស់ ពួកគេនឹងជួបម្ចាស់របស់ពួកគេ(នៅថ្ងៃបរលោក)។ ប៉ុន្តែខ្ញុំយល់ឃើញថា ពួកអ្នកជាក្រុមល្ងង់ខ្លៅ។

وَيَـٰقَوْمِ مَن يَنصُرُنِى مِنَ ٱللَّهِ إِن طَرَدتُّهُمْ ۚ أَفَلَا تَذَكَّرُونَ ﴿٣٠﴾

៣០-ហើយ(គាត់ពោលទៀតថា) ឱក្រុមរបស់ខ្ញុំ! តើអ្នកណានឹងជួយខ្ញុំឱ្យរួចផុតពី(ទារុណកម្ម)អល់ឡោះ ប្រសិនបើខ្ញុំដេញពួកគេ(អ្នកមានជំនឿ)នោះ? តើពួកអ្នកមិនពិចារណាទេឬ?

وَلَآ أَقُولُ لَكُمْ عِندِى خَزَآئِنُ ٱللَّهِ وَلَآ أَعْلَمُ ٱلْغَيْبَ وَلَآ أَقُولُ إِنِّى مَلَكٌ وَلَآ أَقُولُ لِلَّذِينَ تَزْدَرِىٓ أَعْيُنُكُمْ لَن يُؤْتِيَهُمُ ٱللَّهُ خَيْرًا ۖ ٱللَّهُ أَعْلَمُ بِمَا فِىٓ أَنفُسِهِمْ ۖ إِنِّىٓ إِذًا لَّمِنَ ٱلظَّـٰلِمِينَ ﴿٣١﴾

៣១-ហើយខ្ញុំមិននិយាយទៅកាន់ពួកអ្នកថា: ខ្ញុំមានឃ្លាំងទ្រព្យរបស់អល់ឡោះជាច្រើន និងមិននិយាយថា: ខ្ញុំដឹងពីប្រការអាថ៌កំបាំង និងមិននិយាយថា: ពិតប្រាកដណាស់ ខ្ញុំជាម៉ាឡាអ៊ីកាត់ឡើយ ហើយខ្ញុំក៏មិននិយាយទៅកាន់ពួកដែលកែវភ្នែករបស់ពួកអ្នកមើលងាយពួកគេថា: អល់ឡោះនឹងមិនផ្តល់ផលល្អណាឱ្យពួកគេដែរ ។ អល់ឡោះដឹងបំផុតអំពីអ្វីដែលមាននៅក្នុងខ្លួនរបស់ពួកគេ។ ប្រសិនបើខ្ញុំនិយាយដូច្នោះមែន ខ្ញុំពិតជានឹងស្ថិតនៅក្នុងចំណោមពួកដែលបំពានជាមិនខាន។

قَالُوا۟ يَـٰنُوحُ قَدْ جَـٰدَلْتَنَا فَأَكْثَرْتَ

៣២-ពួកគេបាននិយាយថា: ឱនូហ! អ្នកពិតជាបានឈ្លោះប្រកែកជាមួយពួកយើង និងបានបង្កជម្លោះជាមួយពួកយើងច្រើន

جِدَٰلَنَا فَأْتِنَا بِمَا تَعِدُنَآ إِن كُنتَ مِنَ
ٱلصَّٰدِقِينَ ٣٢

ដងមកហើយ ។ ដូច្នេះ ចូរអ្នកនាំមកឱ្យពួកយើងនូវអ្វីដែលអ្នកបានសន្យាជាមួយពួកយើង(ទណ្ឌកម្មរបស់អល់ឡោះ) ប្រសិនបើអ្នកស្ថិតក្នុងចំណោមអ្នកដែលត្រឹមត្រូវមែននោះ ។

قَالَ إِنَّمَا يَأْتِيكُم بِهِ ٱللَّهُ إِن شَآءَ
وَمَآ أَنتُم بِمُعْجِزِينَ ٣٣

៣៣-នូហបានតបវិញថា: ពិតប្រាកដណាស់ មានតែអល់ឡោះទេដែលនាំវា(ទណ្ឌកម្ម)មកឱ្យពួកអ្នក ប្រសិនបើទ្រង់មានចេតនានោះ ។ ហើយពួកអ្នកនឹងមិនអាចគេចផុតបានឡើយ ។

وَلَا يَنفَعُكُمْ نُصْحِىٓ إِنْ أَرَدتُّ أَنْ أَنصَحَ
لَكُمْ إِن كَانَ ٱللَّهُ يُرِيدُ أَن يُغْوِيَكُمْ ۚ هُوَ رَبُّكُمْ
وَإِلَيْهِ تُرْجَعُونَ ٣٤

៣៤-ហើយដំបូន្មានរបស់ខ្ញុំមិនផ្តល់ផលប្រយោជន៍ដល់ពួកអ្នកឡើយ ទោះបីជាខ្ញុំចង់ណែនាំពួកអ្នកក៏ដោយ ប្រសិនបើអល់ឡោះមានបំណងចង់ឱ្យពួកអ្នកវង្វេងនោះ ។ ទ្រង់ជាម្ចាស់របស់ពួកអ្នក ហើយពួកអ្នកនឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់តែមួយគត់ ។

أَمْ يَقُولُونَ ٱفْتَرَىٰهُ ۖ قُلْ إِنِ ٱفْتَرَيْتُهُۥ فَعَلَىَّ
إِجْرَامِى وَأَنَا۠ بَرِىٓءٌ مِّمَّا تُجْرِمُونَ ٣٥

៣៥-ឬពួកគេនឹងនិយាយថា: គេ(មូហាំម៉ាត់)បានប្រឌិតវា(គម្ពីរគួរអាន) ។ ចូរអ្នកតបវិញថា: ប្រសិនបើខ្ញុំបានប្រឌិតវាមែននោះ ខ្ញុំនឹងទទួលទោសដោយខ្លួនឯង ។ ប៉ុន្តែខ្ញុំមិនពាក់ព័ន្ធនឹងអ្វីដែលពួកអ្នកប្រព្រឹត្តបាបកម្មនោះឡើយ ។

وَأُوحِىَ إِلَىٰ نُوحٍ أَنَّهُۥ لَن يُؤْمِنَ مِن
قَوْمِكَ إِلَّا مَن قَدْ ءَامَنَ فَلَا تَبْتَئِسْ بِمَا
كَانُوا۟ يَفْعَلُونَ ٣٦

៣៦-ហើយគេបានផ្តល់វ៉ាហ៊ីទៅឱ្យនូហថា: ពិតប្រាកដណាស់ គ្មានអ្នកណាម្នាក់ក្នុងចំណោមក្រុមរបស់អ្នក(នូហ) មានជំនឿឡើយ លើកលែងតែអ្នកដែលមានជំនឿរួចប៉ុណ្ណោះ ។ ដូច្នេះ ចូរអ្នកកុំព្រួយបារម្ភនូវអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តឱ្យសោះ ។

وَٱصْنَعِ ٱلْفُلْكَ بِأَعْيُنِنَا وَوَحْيِنَا وَلَا تُخَٰطِبْنِى
فِى ٱلَّذِينَ ظَلَمُوٓا۟ ۚ إِنَّهُم مُّغْرَقُونَ ٣٧

៣៧-ហើយចូរអ្នក(នូហ)ធ្វើសំពៅមួយក្រោមក្រសែភ្នែករបស់យើង និងការបញ្ជាប្រាប់របស់យើងចុះ ។ ហើយចូរអ្នកកុំសុំពីយើង(ឱ្យលើកលែងទោស)ដល់ពួកដែលបានបំពានឱ្យសោះ ។ ពិតប្រាកដណាស់ ពួកគេគឺជាពួកដែលត្រូវគេពន្លិចក្នុងទឹក ។

وَيَصْنَعُ ٱلْفُلْكَ وَكُلَّمَا مَرَّ عَلَيْهِ مَلَأٌ مِّن
قَوْمِهِۦ سَخِرُوا۟ مِنْهُ ۚ قَالَ إِن تَسْخَرُوا۟ مِنَّا
فَإِنَّا نَسْخَرُ مِنكُمْ كَمَا تَسْخَرُونَ ٣٨

៣៨-ខណៈដែលគេ(នូហ)កំពុងធ្វើសំពៅ ហើយគ្រប់ពេលដែលអ្នកដឹកនាំនៃក្រុមរបស់គេបានដើរឆ្លងកាត់គាត់នោះ(នៅកន្លែងធ្វើសំពៅ) ពួកគេតែងតែបានសើចចំអកឱ្យគាត់ ។ គាត់បានតបវិញថា: ប្រសិនបើពួកអ្នកសើចចំអកឱ្យពួកយើង ពួកយើងពិតជានឹងសើចចំអកឱ្យពួកអ្នកវិញដូចអ្វីដែលពួកអ្នកសើចចំអកដែរ ។

៣៩-ពួកអ្នកគង់តែនឹងដឹងថា តើអ្នកណាដែលទារុណកម្មនឹងធ្លាក់មកលើគេដែលធ្វើឱ្យគេអាម៉ាស់(ក្នុងលោកិយ) និងត្រូវទទួលទារុណកម្មជាអមតៈ(នៅថ្ងៃបរលោក)នោះ?

فَسَوۡفَ تَعۡلَمُونَ مَن يَأۡتِيهِ عَذَابٞ يُخۡزِيهِ وَيَحِلُّ عَلَيۡهِ عَذَابٞ مُّقِيمٌ ٣٩

៤០-លុះនៅពេលដែលបទបញ្ជារបស់យើងបានមកដល់(ការសន្យាជាមួយនូហក្នុងការធ្វើឱ្យមានទឹកជំនន់) ហើយទឹកបានផុសចេញពីដីយ៉ាងច្រើន យើងក៏មានបន្ទូលថា: ចូរអ្នក(នូហ)ដឹក(សត្វពាហនៈ)មួយគូៗគ្រប់ប្រភេទ(មានញី និងឈ្មោល) ហើយនិងក្រុមគ្រួសាររបស់អ្នក ព្រមទាំងអ្នកមានជំនឿនៅលើសំពៅនោះ លើកលែងតែបុគ្គលណាដែលបានកំណត់ជាមុនចំពោះគេ(ក្នុងការពន្លិចក្នុងទឹកជំនន់)ប៉ុណ្ណោះ។ ហើយគ្មានអ្នកដែលរួមជំនឿជាមួយគាត់ឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ។

حَتَّىٰٓ إِذَا جَآءَ أَمۡرُنَا وَفَارَ ٱلتَّنُّورُ قُلۡنَا ٱحۡمِلۡ فِيهَا مِن كُلّٖ زَوۡجَيۡنِ ٱثۡنَيۡنِ وَأَهۡلَكَ إِلَّا مَن سَبَقَ عَلَيۡهِ ٱلۡقَوۡلُ وَمَنۡ ءَامَنَۚ وَمَآ ءَامَنَ مَعَهُۥٓ إِلَّا قَلِيلٞ ٤٠

៤១-ហើយគាត់បានពោល(ទៅកាន់អ្នកដែលរួមជំនឿជាមួយគាត់)ថា: ចូរពួកអ្នកឡើងជិះលើសំពៅក្នុងនាមអល់ឡោះ ដែលធ្វើឱ្យសំពៅនេះធ្វើដំណើរ និងធ្វើឱ្យវាឈប់។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំគឺមហាអភ័យទោស មហាអាណិតស្រឡាញ់។

۞وَقَالَ ٱرۡكَبُواْ فِيهَا بِسۡمِ ٱللَّهِ مَجۡرٜىٰهَا وَمُرۡسَىٰهَآۚ إِنَّ رَبِّي لَغَفُورٞ رَّحِيمٞ ٤١

៤២-ហើយសំពៅបានដឹកពួកគេ(អ្នកមានជំនឿ)ធ្វើដំណើរកាត់ទឹករលកធំៗប្រៀបដូចជាភ្នំ ហើយនូហបានស្រែកហៅកូនរបស់គាត់ ខណៈដែលគេបានស្ថិតនៅកន្លែងដែលដកខ្លួនចេញពីបណ្ដាអ្នកមានជំនឿថា: ឱកូនសម្លាញ់! ចូរឡើងជិះជាមួយពួកយើង ហើយកុំនៅជាមួយពួកដែលគ្មានជំនឿឱ្យសោះ។

وَهِيَ تَجۡرِي بِهِمۡ فِي مَوۡجٖ كَٱلۡجِبَالِ وَنَادَىٰ نُوحٌ ٱبۡنَهُۥ وَكَانَ فِي مَعۡزِلٖ يَٰبُنَيَّ ٱرۡكَب مَّعَنَا وَلَا تَكُن مَّعَ ٱلۡكَٰفِرِينَ ٤٢

៤៣-គេ(កូនរបស់នូហ)បានតបវិញថា: ខ្ញុំនឹងទៅជ្រកនៅលើភ្នំ ដែលវានឹងការពារខ្ញុំពីទឹកជំនន់។ គាត់បានតបវិញថា: ថ្ងៃនេះគ្មានអ្នកណាអាចការពារពីបញ្ជា(ទណ្ឌកម្ម)របស់អល់ឡោះបានឡើយ លើកលែងតែអ្នកណាដែលទ្រង់អាណិតស្រឡាញ់ប៉ុណ្ណោះ។ ហើយទឹករលកបានញែកបំបែកគេទាំងពីរ(នូហ និងកូនរបស់គាត់) ពេលនោះគេ(កូនរបស់នូហ)ក៏បានស្ថិតក្នុងចំណោមពួកដែលត្រូវលិចលង់។

قَالَ سَـَٔاوِيٓ إِلَىٰ جَبَلٖ يَعۡصِمُنِي مِنَ ٱلۡمَآءِۚ قَالَ لَا عَاصِمَ ٱلۡيَوۡمَ مِنۡ أَمۡرِ ٱللَّهِ إِلَّا مَن رَّحِمَۚ وَحَالَ بَيۡنَهُمَا ٱلۡمَوۡجُ فَكَانَ مِنَ ٱلۡمُغۡرَقِينَ ٤٣

៤៤-ហើយទ្រង់បានមានបន្ទូលថា: ឱដី! ចូរឯងលេបទឹករបស់

وَقِيلَ يَٰٓأَرۡضُ ٱبۡلَعِي مَآءَكِ وَيَٰسَمَآءُ أَقۡلِعِي

وَغِيضَ ٱلْمَآءُ وَقُضِىَ ٱلْأَمْرُ وَٱسْتَوَتْ عَلَى
ٱلْجُودِىِّ ۖ وَقِيلَ بُعْدًا لِّلْقَوْمِ ٱلظَّـٰلِمِينَ ﴿٤٤﴾

ឯងវិញចុះ។ ឱមេឃ! ចូរឯងឈប់ភ្លៀងទៅ។ ពេលនោះទឹកក៏បានស្រកចុះ។ ហើយបទបញ្ជានោះត្រូវបានគេសម្រេច(បានកំទេចអ្នកគ្មានជំនឿពីក្រុមរបស់នួហ) ហើយសំពៅនោះក៏បានចតនៅលើភ្នំជូទី(នៅរវាងប្រទេសអ៊ីរ៉ាក់និងអាម៉េនី)។ ហើយទ្រង់បានមានបន្ទូលបន្តទៀតថា: មហន្តរាយចុះចំពោះក្រុមដែលបំពាននោះ។

وَنَادَىٰ نُوحٌ رَّبَّهُۥ فَقَالَ رَبِّ إِنَّ ٱبْنِى مِنْ
أَهْلِى وَإِنَّ وَعْدَكَ ٱلْحَقُّ وَأَنتَ أَحْكَمُ
ٱلْحَـٰكِمِينَ ﴿٤٥﴾

៤៥-ហើយនួហបានស្រែកសុំពីម្ចាស់របស់គាត់ដោយបានពោលថា: ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ កូនរបស់ខ្ញុំគឺជាគ្រួសាររបស់ខ្ញុំ ហើយប្រាកដណាស់ ការសន្យារបស់ទ្រង់គឺជាការពិត។ ហើយទ្រង់គឺជាអ្នកកាត់សេចក្ដីដ៏យុត្តិធម៌បំផុត។

قَالَ يَـٰنُوحُ إِنَّهُۥ لَيْسَ مِنْ أَهْلِكَ ۖ إِنَّهُۥ
عَمَلٌ غَيْرُ صَـٰلِحٍ ۖ فَلَا تَسْـَٔلْنِ مَا لَيْسَ
لَكَ بِهِۦ عِلْمٌ ۖ إِنِّىٓ أَعِظُكَ أَن تَكُونَ مِنَ
ٱلْجَـٰهِلِينَ ﴿٤٦﴾

៤៦-ទ្រង់មានបន្ទូលតបវិញថា: ឱនួហ! ពិតប្រាកដណាស់ គេមិនមែនជាក្រុមគ្រួសាររបស់អ្នកទេ។ ពិតប្រាកដណាស់ ទង្វើរបស់គេមិនល្អឡើយ។ ដូច្នេះចូរអ្នកកុំសុំពីយើងនូវអ្វីដែលអ្នកមិនបានដឹងពីវាឱ្យសោះ។ ពិតប្រាកដណាស់ យើងទូន្មានអ្នកខ្លាចក្រែងអ្នកស្ថិតក្នុងចំណោមពួកដែលល្ងង់ខ្លៅ។

قَالَ رَبِّ إِنِّىٓ أَعُوذُ بِكَ أَنْ أَسْـَٔلَكَ مَا
لَيْسَ لِى بِهِۦ عِلْمٌ ۖ وَإِلَّا تَغْفِرْ لِى وَتَرْحَمْنِىٓ
أَكُن مِّنَ ٱلْخَـٰسِرِينَ ﴿٤٧﴾

៤៧-គាត់(នួហ)បានពោលថា: ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំសុំពីទ្រង់ឱ្យបញ្ចៀសផងចុះដែលខ្ញុំសុំពីទ្រង់នូវអ្វីដែលខ្ញុំមិនបានដឹងអំពីវា ប្រសិនបើទ្រង់មិនអភ័យទោស និងអាណិតស្រឡាញ់ខ្ញុំទេនោះ ខ្ញុំនឹងស្ថិតនៅក្នុងចំណោមពួកដែលខាតបង់ជាមិនខាន។

قِيلَ يَـٰنُوحُ ٱهْبِطْ بِسَلَـٰمٍ مِّنَّا وَبَرَكَـٰتٍ عَلَيْكَ
وَعَلَىٰٓ أُمَمٍ مِّمَّن مَّعَكَ ۚ وَأُمَمٌ سَنُمَتِّعُهُمْ ثُمَّ
يَمَسُّهُم مِّنَّا عَذَابٌ أَلِيمٌ ﴿٤٨﴾

៤៨-អល់ឡោះបានមានបន្ទូលថា: ឱនួហ! ចូរអ្នកចុះពីសំពៅទៅលើដីដោយមានភាពសុខសាន្តពីយើង និងប្រកបដោយប្រសិទ្ធពរជ័យដល់អ្នក និងប្រជាជនដែលរួមជំនឿជាមួយអ្នក។ ហើយប្រជាជនដទៃទៀត(កូនចៅជំនាន់ក្រោយមកមានអ្នកខ្លះបានក្លាយជាអ្នកគ្មានជំនឿ) យើងនឹងផ្ដល់ភាពសប្បាយរីករាយដល់ពួកគេ ក្រោយមកពួកគេនឹងទទួលទារុណកម្មពីយើងយ៉ាងឈឺចាប់។

تِلْكَ مِنْ أَنۢبَآءِ ٱلْغَيْبِ نُوحِيهَآ إِلَيْكَ ۖ مَا
كُنتَ تَعْلَمُهَآ أَنتَ وَلَا قَوْمُكَ مِن قَبْلِ هَـٰذَا ۖ

៤៩-នោះគឺជាដំណឹងអាថ៌កំបាំងដែលយើងបានផ្ដល់វ៉ាហ៊ីឱ្យអ្នក(មូហាំម៉ាត់)។ អ្នកនិងក្រុមរបស់អ្នកមិនធ្លាប់បានដឹងវាពីមុននេះទេ។ ដូច្នេះ ចូរអ្នកអត់ធ្មត់ ពិតប្រាកដណាស់លទ្ធផលល្អចុងក្រោយ

គឺសម្រាប់បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ ។

៥០-ហើយ(យើងបានបញ្ជូន)ហ៊ូទទៅកាន់ក្រុមអាដដែលជាបងប្អូនរបស់ពួកគេ ។ គេបានពោលថា: ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះចុះ ។ ពួកអ្នកគ្មានម្ចាស់ណាផ្សេងដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ ពួកអ្នកគ្មានអ្វីក្រៅពីជាអ្នកប្រឌិតភូតកុហកនោះឡើយ ។

៥១-ឱក្រុមរបស់ខ្ញុំ! ខ្ញុំមិនសុំពីពួកអ្នកនូវការតបស្នងពីវា(ការអំពាវនាវ)ឡើយ ។ ការតបស្នងរបស់ខ្ញុំគឺមកពីទ្រង់ដែលបានបង្កើតខ្ញុំ ។ តើពួកអ្នកមិនចេះពិចារណាទេឬ?

៥២-ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកសុំអភ័យទោសពីម្ចាស់របស់ពួកអ្នក ព្រមទាំងសារភាពទោសកំហុសចំពោះទ្រង់ចុះ ។ ទ្រង់នឹងបញ្ចុះទឹកភ្លៀងយ៉ាងច្រើនឱ្យពួកអ្នក ហើយបន្ថែមកម្លាំងលើភាពខ្លាំងក្លារបស់ពួកអ្នកថែមទៀត ។ ចូរពួកអ្នកកុំបែរចេញ(ពីការអំពាវនាវរបស់ខ្ញុំ) ដោយត្រឡប់ទៅធ្វើជាអ្នកប្រព្រឹត្តបាបកម្មវិញឱ្យសោះ ។

៥៣-ពួកគេ(ពួកប្រឆាំង)បានតបថា: ឱហ៊ូទ! អ្នកមិនបាននាំភស្តុតាងជាក់ច្បាស់មកឱ្យពួកយើងទេ ហើយពួកយើងមិនបោះបង់ម្ចាស់ទាំងឡាយរបស់ពួកយើងដោយសារតែសំដីរបស់អ្នកឡើយ ហើយពួកយើងក៏គ្មានជំនឿលើអ្នកដែរ ។

៥៤-ពួកយើងមិននិយាយអ្វីក្រៅពីនិយាយថា: ព្រះរបស់ពួកយើងមួយចំនួនបានធ្វើឱ្យអ្នកវិកលចរិតឡើយ ។ ហ៊ូទក៏បានតបវិញថា: ពិតប្រាកដណាស់ ខ្ញុំសុំពីអល់ឡោះឱ្យជួយធ្វើសាក្សីដល់ខ្ញុំ ហើយពួកអ្នកក៏ត្រូវធ្វើសាក្សីដែរថា ខ្ញុំពិតជាមិនពាក់ព័ន្ធនឹងអ្វីដែលពួកអ្នកយកមកធ្វើជាព្រះ

៥៥-ផ្សេងពីទ្រង់ឡើយ ។ ដូច្នេះ ចូរពួកអ្នកទាំងអស់រៀបចំផែនការប្រឆាំងនឹងខ្ញុំចុះ ហើយពួកអ្នកកុំពន្យារពេលឱ្យខ្ញុំអ្វី ។

៥៦-ពិតប្រាកដណាស់ ខ្ញុំបានប្រគល់ការទុកចិត្តទៅលើអល់ឡោះ ដែលជាម្ចាស់របស់ខ្ញុំ និងជាម្ចាស់របស់ពួកអ្នក ។ គ្មាន

فَٱصۡبِرۡۖ إِنَّ ٱلۡعَٰقِبَةَ لِلۡمُتَّقِينَ ﴿٤٩﴾
وَإِلَىٰ عَادٍ أَخَاهُمۡ هُودٗاۚ قَالَ يَٰقَوۡمِ ٱعۡبُدُواْ
ٱللَّهَ مَا لَكُم مِّنۡ إِلَٰهٍ غَيۡرُهُۥٓۖ إِنۡ أَنتُمۡ إِلَّا
مُفۡتَرُونَ ﴿٥٠﴾

يَٰقَوۡمِ لَآ أَسۡـَٔلُكُمۡ عَلَيۡهِ أَجۡرًاۖ إِنۡ أَجۡرِيَ
إِلَّا عَلَى ٱلَّذِي فَطَرَنِيٓۚ أَفَلَا تَعۡقِلُونَ ﴿٥١﴾

وَيَٰقَوۡمِ ٱسۡتَغۡفِرُواْ رَبَّكُمۡ ثُمَّ تُوبُوٓاْ إِلَيۡهِ
يُرۡسِلِ ٱلسَّمَآءَ عَلَيۡكُم مِّدۡرَارٗا وَيَزِدۡكُمۡ
قُوَّةً إِلَىٰ قُوَّتِكُمۡ وَلَا تَتَوَلَّوۡاْ مُجۡرِمِينَ ﴿٥٢﴾

قَالُواْ يَٰهُودُ مَا جِئۡتَنَا بِبَيِّنَةٖ وَمَا نَحۡنُ بِتَارِكِيٓ
ءَالِهَتِنَا عَن قَوۡلِكَ وَمَا نَحۡنُ لَكَ
بِمُؤۡمِنِينَ ﴿٥٣﴾
إِن نَّقُولُ إِلَّا ٱعۡتَرَىٰكَ بَعۡضُ ءَالِهَتِنَا بِسُوٓءٖۗ
قَالَ إِنِّيٓ أُشۡهِدُ ٱللَّهَ وَٱشۡهَدُوٓاْ أَنِّي بَرِيٓءٞ مِّمَّا
تُشۡرِكُونَ ﴿٥٤﴾

مِن دُونِهِۦۖ فَكِيدُونِي جَمِيعٗا ثُمَّ لَا
تُنظِرُونِ ﴿٥٥﴾
إِنِّي تَوَكَّلۡتُ عَلَى ٱللَّهِ رَبِّي وَرَبِّكُمۚ مَّا مِن دَآبَّةٍ

إِلَّا هُوَ ءَاخِذُۢ بِنَاصِيَتِهَآۚ إِنَّ رَبِّى عَلَىٰ صِرَٰطٍ
مُّسْتَقِيمٍ ﴿٥٦﴾

فَإِن تَوَلَّوْاْ فَقَدْ أَبْلَغْتُكُم مَّآ أُرْسِلْتُ بِهِۦٓ
إِلَيْكُمْۚ وَيَسْتَخْلِفُ رَبِّى قَوْمًا غَيْرَكُمْ وَلَا
تَضُرُّونَهُۥ شَيْـًٔاۚ إِنَّ رَبِّى عَلَىٰ كُلِّ شَىْءٍ
حَفِيظٌ ﴿٥٧﴾

وَلَمَّا جَآءَ أَمْرُنَا نَجَّيْنَا هُودًا وَٱلَّذِينَ ءَامَنُواْ
مَعَهُۥ بِرَحْمَةٍ مِّنَّا وَنَجَّيْنَٰهُم مِّنْ عَذَابٍ
غَلِيظٍ ﴿٥٨﴾

وَتِلْكَ عَادٌۖ جَحَدُواْ بِـَٔايَٰتِ رَبِّهِمْ وَعَصَوْاْ
رُسُلَهُۥ وَٱتَّبَعُوٓاْ أَمْرَ كُلِّ جَبَّارٍ عَنِيدٍ ﴿٥٩﴾

وَأُتْبِعُواْ فِى هَٰذِهِ ٱلدُّنْيَا لَعْنَةً وَيَوْمَ ٱلْقِيَٰمَةِۗ
أَلَآ إِنَّ عَادًا كَفَرُواْ رَبَّهُمْۗ أَلَا بُعْدًا لِّعَادٍ قَوْمِ
هُودٍ ﴿٦٠﴾

۞ وَإِلَىٰ ثَمُودَ أَخَاهُمْ صَٰلِحًاۚ قَالَ يَٰقَوْمِ
ٱعْبُدُواْ ٱللَّهَ مَا لَكُم مِّنْ إِلَٰهٍ غَيْرُهُۥۖ هُوَ
أَنشَأَكُم مِّنَ ٱلْأَرْضِ وَٱسْتَعْمَرَكُمْ فِيهَا
فَٱسْتَغْفِرُوهُ ثُمَّ تُوبُوٓاْ إِلَيْهِۚ إِنَّ رَبِّى قَرِيبٌ
مُّجِيبٌ ﴿٦١﴾

សត្វលោកណាមានចលនាឡើយ លើកលែងតែទ្រង់ជាអ្នកគ្រប់គ្រងវាប៉ុណ្ណោះ ។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំគឺស្ថិតលើមាគ៌ាដែលត្រឹមត្រូវ ។

៥៧-ប្រសិនបើពួកអ្នកបែរចេញក៏ដោយ ខ្ញុំពិតជាបានផ្តល់ឱ្យពួកអ្នកនូវអ្វីដែលគេបានបញ្ជូនមកឱ្យខ្ញុំទៅកាន់ពួកអ្នករួចទៅហើយ ។ ហើយម្ចាស់របស់ខ្ញុំនឹងជំនួសក្រុមមួយផ្សេងក្រៅពីពួកអ្នក ហើយពួកអ្នកក៏មិនអាចបង្កគ្រោះថ្នាក់អ្វីដល់ទ្រង់ដែរ ។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំជាអ្នកថែរក្សាការពារលើអ្វីៗទាំងអស់ ។

៥៨-ហើយនៅពេលដែលបទបញ្ជា(ទារុណកម្ម)របស់យើងបានមកដល់ យើងក៏បានសង្គ្រោះហ៊ូទ និងបណ្តាអ្នកដែលបានជឿជាមួយគាត់ដោយក្តីមេត្តាករុណាអំពីយើង ហើយយើងបានសង្គ្រោះពួកគេពីទារុណកម្មដ៏ខ្លាំងក្លានេះ ។

៥៩-ហើយក្រុមអាដនោះ ពួកគេបានបដិសេធនឹងអាយ៉ាត់ៗនៃម្ចាស់របស់ពួកគេ និងបានប្រឆាំងនឹងបណ្តាអ្នកនាំសាររបស់ទ្រង់ ហើយនិងបានដើរតាមរាល់បទបញ្ជារបស់ពួកដែលអួតក្អេងក្អាងចចេសរឹងរូសទៀតផង ។

៦០-ហើយពួកគេនឹងត្រូវគេដាក់បណ្តាសាទាំងនៅក្នុងលោកិយនិងថ្ងៃបរលោក ។ ចូរដឹងថា! ពិតប្រាកដណាស់ ក្រុមអាដបានប្រឆាំងនឹងម្ចាស់របស់ពួកគេ ។ ចូរដឹងថា! ទទួលមហន្តរាយហើយចំពោះក្រុមអាដដែលជាក្រុមរបស់ហ៊ូទ ។

៦១-ហើយ(យើងបានបញ្ជូន)សឡេះទៅកាន់ក្រុមសាមូដដែលជាបងប្អូនរបស់ពួកគេ ។ គាត់បានពោលថាៈ ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ ពួកអ្នកគ្មានម្ចាស់ណាផ្សេងដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីអល់ឡោះឡើយ ។ ទ្រង់ជាអ្នកដែលចាប់ផ្តើមបង្កើតពួកអ្នកពីដី ហើយទ្រង់ក៏បានឱ្យពួកអ្នកតាំងទីលំនៅលើវា ។ ដូច្នេះ ចូរពួកអ្នកសុំអភ័យទោសពីទ្រង់ និងសារភាពទោសកំហុសចំពោះទ្រង់ ។ ពិតប្រាកដណាស់ម្ចាស់របស់ខ្ញុំជាអ្នកដែលនៅជិតបង្កើយ ជាអ្នកឆ្លើយតប(ការបួងសួងសុំ) ។

៦២-ពួកគេបានតបវិញថា: ឱសឡេះ! ជាការពិតណាស់ អ្នកធ្លាប់ជាមនុស្សដែលជាទីសង្ឃឹមក្នុងចំណោមពួកយើង(ជាមេដឹកនាំ) កាលពីមុននេះ។ តើអ្នកហាមឃាត់ពួកយើងមិនឱ្យគោរពសក្ការៈចំពោះអ្វីដែលជីដូនជីតារបស់ពួកយើងបានគោរពសក្ការៈឬ? ហើយពិតប្រាកដណាស់ ពួកយើងមានការសង្ស័យយ៉ាងខ្លាំងនូវអ្វីដែលអ្នកអំពាវនាវចំពោះពួកយើង។

៦៣-គាត់(សឡេះ)បានពោលថា: ឱក្រុមរបស់ខ្ញុំ! ពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើខ្ញុំមានភស្តុតាងយ៉ាងច្បាស់លាស់អំពីម្ចាស់របស់ខ្ញុំ ហើយទ្រង់បានប្រទានដល់ខ្ញុំនូវក្ដីមេត្តាករុណា(ភាពជាណាពី)ពីទ្រង់នោះ តើមានអ្នកណាអាចជួយខ្ញុំបានពី(ទណ្ឌកម្ម)អល់ឡោះ ប្រសិនបើខ្ញុំមិនបានគោរពចំពោះទ្រង់? ពួកអ្នកមិនបង្កើនអ្វីដល់ខ្ញុំក្រៅពីភាពខាតបង់នោះឡើយ។

៦៤-ឱក្រុមរបស់ខ្ញុំ! នេះគឺជាសត្វអូដ្ឋញីរបស់អល់ឡោះដែលជាភស្តុតាងមួយសម្រាប់ពួកអ្នក។ ដូច្នេះ ចូរពួកអ្នកទុកឱ្យវាដើរស៊ីនៅលើដីរបស់អល់ឡោះចុះ ហើយពួកអ្នកកុំប៉ះពាល់វាដោយប្រការអាក្រក់ណាមួយឱ្យសោះ។ បើមិនដូច្នោះទេទារុណកម្មនឹងធ្លាក់មកលើពួកអ្នកឆាប់ៗនេះជាមិនខាន។

៦៥-តែពួកគេបានសម្លាប់វា។ ពេលនោះគាត់បានពោលថា: ចូរពួកអ្នកសប្បាយរីករាយក្នុងលំនៅដ្ឋានរបស់ពួកអ្នករយៈពេលបីថ្ងៃចុះ(ទណ្ឌកម្មនឹងមកដល់បន្ទាប់ពីនោះ)។ នេះជាការសន្យាមួយ(របស់អល់ឡោះ)ដែលគ្មានការភូតកុហកឡើយ។

៦៦-នៅពេលដែលបទបញ្ជា(ទណ្ឌកម្ម)របស់យើងបានមកដល់ យើងក៏បានសង្គ្រោះសឡេះ និងបណ្ដាអ្នកដែលមានជំនឿជាមួយគាត់ដោយក្ដីមេត្តាករុណាអំពីយើង ហើយ(យើងបានសង្គ្រោះពួកគេ)ពីភាពអាម៉ាស់របស់ពួកគេនៅថ្ងៃនោះ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកមហាខ្លាំងក្លា មហាខ្លាំងពូកែ។

៦៧-ហើយពេលនោះ សំរែកយ៉ាងខ្លាំងបានឆក់យកជីវិតពួកដែលបំពាន ហើយបានធ្វើឱ្យពួកគេស្លាប់មួយរំពេចនៅក្នុងផ្ទះរបស់

قَالُواْ يَٰصَٰلِحُ قَدۡ كُنتَ فِينَا مَرۡجُوّٗا قَبۡلَ
هَٰذَآۖ أَتَنۡهَىٰنَآ أَن نَّعۡبُدَ مَا يَعۡبُدُ ءَابَآؤُنَا
وَإِنَّنَا لَفِي شَكّٖ مِّمَّا تَدۡعُونَآ إِلَيۡهِ مُرِيبٖ ٦٢

قَالَ يَٰقَوۡمِ أَرَءَيۡتُمۡ إِن كُنتُ عَلَىٰ بَيِّنَةٖ مِّن
رَّبِّي وَءَاتَىٰنِي مِنۡهُ رَحۡمَةٗ فَمَن يَنصُرُنِي
مِنَ ٱللَّهِ إِنۡ عَصَيۡتُهُۥۖ فَمَا تَزِيدُونَنِي
غَيۡرَ تَخۡسِيرٖ ٦٣

وَيَٰقَوۡمِ هَٰذِهِۦ نَاقَةُ ٱللَّهِ لَكُمۡ ءَايَةٗ فَذَرُوهَا
تَأۡكُلۡ فِيٓ أَرۡضِ ٱللَّهِ وَلَا تَمَسُّوهَا بِسُوٓءٖ
فَيَأۡخُذَكُمۡ عَذَابٞ قَرِيبٞ ٦٤

فَعَقَرُوهَا فَقَالَ تَمَتَّعُواْ فِي دَارِكُمۡ ثَلَٰثَةَ
أَيَّامٖۖ ذَٰلِكَ وَعۡدٌ غَيۡرُ مَكۡذُوبٖ ٦٥

فَلَمَّا جَآءَ أَمۡرُنَا نَجَّيۡنَا صَٰلِحٗا وَٱلَّذِينَ
ءَامَنُواْ مَعَهُۥ بِرَحۡمَةٖ مِّنَّا وَمِنۡ خِزۡيِ يَوۡمِئِذٍۚ
إِنَّ رَبَّكَ هُوَ ٱلۡقَوِيُّ ٱلۡعَزِيزُ ٦٦

وَأَخَذَ ٱلَّذِينَ ظَلَمُواْ ٱلصَّيۡحَةُ فَأَصۡبَحُواْ

فِي دِيَٰرِهِمۡ جَٰثِمِينَ ٦٧

ពួកគេ។

كَأَن لَّمۡ يَغۡنَوۡاْ فِيهَآۗ أَلَآ إِنَّ ثَمُودَاْ كَفَرُواْ
رَبَّهُمۡۗ أَلَا بُعۡدٗا لِّثَمُودَ ٦٨

៦៨-វាហាក់ដូចជាពួកគេមិនបានរស់នៅទីនោះ។ ចូរដឹងថា! ពិតប្រាកដណាស់ ក្រុមសាមូដបានប្រឆាំងនឹងម្ចាស់របស់ពួកគេ។ ចូរដឹងថា! មហន្តរាយហើយចំពោះក្រុមសាមូដ។

وَلَقَدۡ جَآءَتۡ رُسُلُنَآ إِبۡرَٰهِيمَ بِٱلۡبُشۡرَىٰ قَالُواْ
سَلَٰمٗاۖ قَالَ سَلَٰمٞۖ فَمَا لَبِثَ أَن جَآءَ بِعِجۡلٍ
حَنِيذٖ ٦٩

៦៩-ហើយជាការពិតណាស់ បណ្ដាអ្នកនាំសាររបស់យើង (ម៉ាឡាអ៊ីកាត់) បាននាំដំណឹងល្អមកឱ្យអ៊ីព្រហ៊ីម (ប្រាប់ថាប្រពន្ធគាត់នឹងមានកូន)។ ពួកគេបានស្វាគមន៍នឹងពាក្យសាឡាម ហើយគាត់ក៏បានឆ្លើយតបនឹងពាក្យសាឡាមវិញដែរ។ ហើយមិនយូរប៉ុន្មានគាត់ក៏បាននាំមកនូវកូនគោអាំងមួយ (មកទទួលពួកគេ)។

فَلَمَّا رَءَآ أَيۡدِيَهُمۡ لَا تَصِلُ إِلَيۡهِ نَكِرَهُمۡ
وَأَوۡجَسَ مِنۡهُمۡ خِيفَةٗۚ قَالُواْ لَا تَخَفۡ إِنَّآ
أُرۡسِلۡنَآ إِلَىٰ قَوۡمِ لُوطٖ ٧٠

៧០-ប៉ុន្តែនៅពេលអ៊ីព្រហ៊ីមបានឃើញដៃរបស់ពួកគេ (ម៉ាឡាអ៊ីកាត់) មិនលូកចាប់យកសាច់កូនគោអាំងនោះ គាត់បានសង្ស័យលើពួកគេ ហើយគាត់ក៏មានអារម្មណ៍ភ័យខ្លាចពីពួកគេ។ ពួកគេបាននិយាយថាៈ ចូរអ្នកកុំភ័យខ្លាចអ្វីតាមពិតពួកយើងត្រូវបានគេ (អល់ឡោះ) បញ្ជូនទៅក្រុមលូតទេ។

وَٱمۡرَأَتُهُۥ قَآئِمَةٞ فَضَحِكَتۡ فَبَشَّرۡنَٰهَا
بِإِسۡحَٰقَ وَمِن وَرَآءِ إِسۡحَٰقَ يَعۡقُوبَ ٧١

៧១-ហើយប្រពន្ធរបស់គាត់ (អ៊ីព្រហ៊ីម) បានឈរស្ដាប់នៅទីនោះ ដោយនាងបានញញឹមសើច។ ហើយយើងបានផ្ដល់ដំណឹងល្អ (តាមរយៈម៉ាឡាអ៊ីកាត់) អំពីអ៊ីសហាកដល់នាង និងក្រោយពីអ៊ីសហាកនោះគឺយ៉ាក់កូប។

قَالَتۡ يَٰوَيۡلَتَىٰٓ ءَأَلِدُ وَأَنَا۠ عَجُوزٞ وَهَٰذَا بَعۡلِي
شَيۡخًاۖ إِنَّ هَٰذَا لَشَيۡءٌ عَجِيبٞ ٧٢

៧២-នាងបាននិយាយ (ដោយភ្ញាក់ផ្អើល) ថាៈ អស្ចារ្យហើយខ្ញុំ! តើខ្ញុំមានកូនយ៉ាងដូចម្ដេច បើខ្ញុំចាស់ជរាហើយនោះ ហើយប្ដីរបស់ខ្ញុំនេះក៏ចាស់ជរាដែរ? ពិតប្រាកដណាស់ នេះគឺជារឿងចម្លែកមែន។

قَالُوٓاْ أَتَعۡجَبِينَ مِنۡ أَمۡرِ ٱللَّهِۖ رَحۡمَتُ ٱللَّهِ
وَبَرَكَٰتُهُۥ عَلَيۡكُمۡ أَهۡلَ ٱلۡبَيۡتِۚ إِنَّهُۥ
حَمِيدٞ مَّجِيدٞ ٧٣

៧៣-ពួកគេ (ម៉ាឡាអ៊ីកាត់) បានតបថាៈ តើនាងភ្ញាក់ផ្អើលនឹងបទបញ្ជារបស់អល់ឡោះឬ? ក្ដីមេត្តាករុណារបស់អល់ឡោះ និងពរជ័យរបស់ទ្រង់គឺផ្ដល់ឱ្យពួកអ្នក ឱក្រុមគ្រួសារ (របស់អ៊ីព្រហ៊ីម)! ពិតប្រាកដណាស់ ទ្រង់ជាទីកោតសរសើរ ថ្កុំថ្កើងបំផុត។

فَلَمَّا ذَهَبَ عَنۡ إِبۡرَٰهِيمَ ٱلرَّوۡعُ وَجَآءَتۡهُ

៧៤-ហើយនៅពេលដែលការភ័យខ្លាចបានរំសាយចេញពីអ៊ីព្រហ៊ីម និងដំណឹងល្អ (មានកូន) បានមកដល់គាត់ គាត់ក៏ស្រាប់

ٱلۡبُشۡرَىٰ يُجَٰدِلُنَا فِي قَوۡمِ لُوطٍ ٧٤

តែជជែកតវ៉ាជាមួយពួកយើង(ម៉ាឡាអ៊ីកាត់)ពីរឿង(បំផ្លិចបំផ្លាញ)របស់ក្រុមលូត។

إِنَّ إِبۡرَٰهِيمَ لَحَلِيمٌ أَوَّٰهٞ مُّنِيبٞ ٧٥

៧៥-ពិតប្រាកដណាស់ អ៊ីព្រហ៊ីមជាអ្នកទន់ភ្លន់ ជាអ្នកអត់ធ្មត់ ជាអ្នកបួងសួងសុំអភ័យទោសពីអល់ឡោះជានិច្ច។

يَٰٓإِبۡرَٰهِيمُ أَعۡرِضۡ عَنۡ هَٰذَآۖ إِنَّهُۥ قَدۡ جَآءَ أَمۡرُ
رَبِّكَۖ وَإِنَّهُمۡ ءَاتِيهِمۡ عَذَابٌ غَيۡرُ مَرۡدُودٖ ٧٦

៧៦-ឱអ៊ីព្រហ៊ីម! ចូរអ្នកបោះបង់ការតវ៉ានេះចុះ តាមពិតបទបញ្ជានៃម្ចាស់របស់អ្នកបានមកដល់ហើយ។ ហើយពិតប្រាកដណាស់ ទារុណកម្មនឹងមកដល់ពួកគេ(ក្រុមលូត) ដោយគ្មានអ្នកណាអាចរារាំងបានឡើយ។

وَلَمَّا جَآءَتۡ رُسُلُنَا لُوطٗا سِيٓءَ بِهِمۡ وَضَاقَ
بِهِمۡ ذَرۡعٗا وَقَالَ هَٰذَا يَوۡمٌ عَصِيبٞ ٧٧

៧៧-ហើយនៅពេលដែលអ្នកនាំសាររបស់យើង(ម៉ាឡាអ៊ីកាត់) បានមកជួបលូត គាត់មានការព្រួយបារម្ភ និងតឹងទ្រូងដោយសារតែពួកគេ។ ហើយគាត់បានពោលថាៈ នេះជាថ្ងៃមួយដ៏លំបាកបំផុត។

وَجَآءَهُۥ قَوۡمُهُۥ يُهۡرَعُونَ إِلَيۡهِ وَمِن قَبۡلُ كَانُواْ
يَعۡمَلُونَ ٱلسَّيِّـَٔاتِۚ قَالَ يَٰقَوۡمِ هَٰٓؤُلَآءِ بَنَاتِي
هُنَّ أَطۡهَرُ لَكُمۡۖ فَٱتَّقُواْ ٱللَّهَ وَلَا تُخۡزُونِ فِي
ضَيۡفِيٓۖ أَلَيۡسَ مِنكُمۡ رَجُلٞ رَّشِيدٞ ٧٨

៧៨-ហើយក្រុមរបស់គាត់(លូត)បានមកជួបគាត់ទាំងប្រញាប់ប្រញាល់ ខណៈដែលពួកគេធ្លាប់បានប្រព្រឹត្តអំពើអាក្រក់ជាច្រើនកាលពីមុន(បុរសរួមភេទជាមួយបុរស)។ គាត់បានពោលថាៈ ឱក្រុមរបស់ខ្ញុំ! ទាំងនេះគឺជាកូនស្រីរបស់ខ្ញុំ ពួកនាងស្អាតបរិសុទ្ធសម្រាប់ពួកអ្នក(ប្រសិនបើពួកអ្នករៀបការជាមួយនាងស្របច្បាប់)។ ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ ហើយចូរពួកអ្នកកុំធ្វើឱ្យខ្ញុំអាម៉ាស់ចំពោះភ្ញៀវរបស់ខ្ញុំឱ្យសោះ។ តើក្នុងចំណោមពួកអ្នកគ្មានបុរសណាឈ្លាសវៃទេឬ?

قَالُواْ لَقَدۡ عَلِمۡتَ مَا لَنَا فِي بَنَاتِكَ مِنۡ حَقّٖ
وَإِنَّكَ لَتَعۡلَمُ مَا نُرِيدُ ٧٩

៧៩-ពួកគេបានតបវិញថាៈ អ្នកពិតជាបានដឹងរួចហើយថា ពួកយើងមិនត្រូវការកូនស្រីទាំងអស់របស់អ្នកឡើយ ហើយពិតប្រាកដណាស់ អ្នកដឹងយ៉ាងច្បាស់នូវអ្វីដែលពួកយើងត្រូវការ។

قَالَ لَوۡ أَنَّ لِي بِكُمۡ قُوَّةً أَوۡ ءَاوِيٓ إِلَىٰ رُكۡنٖ
شَدِيدٖ ٨٠

៨០-គាត់(លូត)បានពោលថាៈ ប្រសិនបើខ្ញុំមានអំណាចអាចទប់ទល់នឹងពួកអ្នក ឬខ្ញុំអាចរកអ្នកមានអំណាចខ្លាំងក្លាជួយ(ខ្ញុំនឹងតទល់ជាមួយពួកអ្នកវិញ)ជាមិនខាន។

قَالُواْ يَٰلُوطُ إِنَّا رُسُلُ رَبِّكَ لَن يَصِلُوٓاْ إِلَيۡكَۖ
فَأَسۡرِ بِأَهۡلِكَ بِقِطۡعٖ مِّنَ ٱلَّيۡلِ وَلَا يَلۡتَفِتۡ

៨១-ពួកគេ(ម៉ាឡាអ៊ីកាត់)បានពោលថាៈ ឱលូត! ជាការពិតណាស់ ពួកយើងគឺជាអ្នកនាំសារនៃម្ចាស់របស់អ្នក។ ពួកគេនឹងមិនអាចប៉ះពាល់ដល់អ្នកបានឡើយ។ ចូរអ្នកនាំគ្រួសាររបស់អ្នកចាក

مِنكُمْ أَحَدٌ إِلَّا ٱمْرَأَتَكَ ۖ إِنَّهُۥ مُصِيبُهَا مَآ
أَصَابَهُمْ ۚ إِنَّ مَوْعِدَهُمُ ٱلصُّبْحُ ۚ أَلَيْسَ
ٱلصُّبْحُ بِقَرِيبٍ ﴿٨١﴾

ចេញ(ពីភូមិនេះ)នៅពាក់កណ្ដាលយប់ លើកលែងតែភរិយារបស់អ្នកប៉ុណ្ណោះ ហើយកុំឱ្យអ្នកណាម្នាក់ក្នុងចំណោមពួកអ្នកងាកមើលក្រោយឱ្យសោះ ព្រោះទារុណកម្មនឹងធ្លាក់ទៅលើនាងដូចអ្វីដែលពួកគេ(ក្រុមរបស់លូត)នឹងទទួលរងដែរ ។ ពិតប្រាកដណាស់ ពេលសន្យា(ដាក់ទណ្ឌកម្ម)របស់ពួកគេគឺនៅពេលទៀបភ្លឺ ។ តើពេលទៀបភ្លឺមិនមែនជិតមកដល់ទេឬ?

فَلَمَّا جَآءَ أَمْرُنَا جَعَلْنَا عَٰلِيَهَا سَافِلَهَا
وَأَمْطَرْنَا عَلَيْهَا حِجَارَةً مِّن سِجِّيلٍ
مَّنضُودٍ ﴿٨٢﴾

៨២-ដូច្នេះនៅពេលដែលបទបញ្ជា(ទណ្ឌកម្ម)របស់យើងបានមកដល់ យើងបានធ្វើឱ្យ(ភូមិសាដូមនៅប៉ាឡេស្ទីន)ក្រឡាប់ពីលើចុះក្រោម ហើយបានបញ្ចុះភ្លៀងថ្មពីដីដុតទៅលើវាជាបន្តបន្ទាប់ ។

مُّسَوَّمَةً عِندَ رَبِّكَ ۖ وَمَا هِىَ مِنَ
ٱلظَّٰلِمِينَ بِبَعِيدٍ ﴿٨٣﴾

៨៣-ដែលជាសញ្ញាមកពីម្ចាស់របស់អ្នក(មូហាំម៉ាត់) ហើយវា(ថ្ម ឬភូមិ)មិនឆ្ងាយពីពួកដែលបំពានឡើយ ។

۞ وَإِلَىٰ مَدْيَنَ أَخَاهُمْ شُعَيْبًا ۚ قَالَ يَٰقَوْمِ
ٱعْبُدُوا۟ ٱللَّهَ مَا لَكُم مِّنْ إِلَٰهٍ غَيْرُهُۥ ۖ
وَلَا تَنقُصُوا۟ ٱلْمِكْيَالَ وَٱلْمِيزَانَ ۚ إِنِّىٓ
أَرَىٰكُم بِخَيْرٍ وَإِنِّىٓ أَخَافُ عَلَيْكُمْ عَذَابَ
يَوْمٍ مُّحِيطٍ ﴿٨٤﴾

៨៤-ហើយ(យើងបានបញ្ជូន)ស្ទូអែបទៅកាន់ម៉ាទយ៉ាន់ដែលជាបងប្អូនរបស់ពួកគេ ។ ស្ទូអែបបានពោលថា: ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ ពួកអ្នកគ្មានម្ចាស់ណាផ្សេងដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីអល់ឡោះឡើយ ។ ចូរពួកអ្នកកុំកេងបំបាត់ក្នុងការវាល់ និងការថ្លឹង ។ ខ្ញុំពិតជាឃើញពួកអ្នកមានភាពល្អប្រសើរ រីកចំរើន ហើយពិតប្រាកដណាស់ ខ្ញុំខ្លាចទារុណកម្មហ៊ុំព័ទ្ធពួកអ្នកគ្រប់ទិសទីនៅថ្ងៃណាមួយ ។

وَيَٰقَوْمِ أَوْفُوا۟ ٱلْمِكْيَالَ وَٱلْمِيزَانَ
بِٱلْقِسْطِ ۖ وَلَا تَبْخَسُوا۟ ٱلنَّاسَ أَشْيَآءَهُمْ
وَلَا تَعْثَوْا۟ فِى ٱلْأَرْضِ مُفْسِدِينَ ﴿٨٥﴾

៨៥-ហើយ(ស្ទូអែបបានពោលទៀតថា) ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកវាល់ និងថ្លឹងឱ្យគ្រប់ចំនួនដោយយុត្តិធម៌ ហើយចូរពួកអ្នកកុំកេងប្រវ័ញ្ចមនុស្សលោកនូវកម្មសិទ្ធិរបស់ពួកគេ ។ ហើយចូរពួកអ្នកកុំបង្កវិនាសកម្មនៅលើផែនដីនេះឱ្យសោះ ។

بَقِيَّتُ ٱللَّهِ خَيْرٌ لَّكُمْ إِن كُنتُم مُّؤْمِنِينَ ۚ
وَمَآ أَنَا۠ عَلَيْكُم بِحَفِيظٍ ﴿٨٦﴾

៨៦-អ្វីដែលបានបន្សល់ពីអល់ឡោះ(បានមកពីការរកស៊ីត្រឹមត្រូវ)គឺល្អបំផុតសម្រាប់ពួកអ្នក ប្រសិនបើពួកអ្នកមានជំនឿ ។ ហើយខ្ញុំ(ស្ទូអែប)មិនមែនជាអ្នកទទួលខុសត្រូវលើពួកអ្នកឡើយ ។

قَالُوا۟ يَٰشُعَيْبُ أَصَلَوٰتُكَ تَأْمُرُكَ أَن نَّتْرُكَ

៨៧-ពួកគេបានតបវិញថា: ឱស្ទូអែប! តើការសឡាតរបស់អ្នកបញ្ជាអ្នកឱ្យពួកយើងបោះបង់ចោលនូវអ្វីដែលជីដូនជីតារបស់

مَا يَعۡبُدُ ءَابَآؤُنَآ أَوۡ أَن نَّفۡعَلَ فِيٓ أَمۡوَٰلِنَا مَا
نَشَٰٓؤُاْۖ إِنَّكَ لَأَنتَ ٱلۡحَلِيمُ ٱلرَّشِيدُ ٨٧

ពួកយើងធ្លាប់គោរពសក្ការៈ ឬក៏មិនឱ្យពួកយើងប្រើប្រាស់ទ្រព្យសម្បត្តិរបស់ពួកយើងតាមអ្វីដែលពួកយើងចង់? ជាការពិតណាស់ អ្នកជាអ្នកទន់ភ្លន់ ឈ្លាសវៃ(និយាយចំអកឡកឡឺយ) ។

قَالَ يَٰقَوۡمِ أَرَءَيۡتُمۡ إِن كُنتُ عَلَىٰ بَيِّنَةٖ مِّن
رَّبِّي وَرَزَقَنِي مِنۡهُ رِزۡقًا حَسَنٗاۚ وَمَآ أُرِيدُ أَنۡ
أُخَالِفَكُمۡ إِلَىٰ مَآ أَنۡهَىٰكُمۡ عَنۡهُۚ إِنۡ أُرِيدُ
إِلَّا ٱلۡإِصۡلَٰحَ مَا ٱسۡتَطَعۡتُۚ وَمَا تَوۡفِيقِيٓ إِلَّا
بِٱللَّهِۚ عَلَيۡهِ تَوَكَّلۡتُ وَإِلَيۡهِ أُنِيبُ ٨٨

៨៨-ស្ហ៊ូអែបបានពោលថាៈ ឱក្រុមរបស់ខ្ញុំ! តើពួកអ្នកយល់ឃើញយ៉ាងណាប្រសិនបើខ្ញុំមានភស្តុតាងច្បាស់លាស់ពីម្ចាស់របស់ខ្ញុំ ហើយទ្រង់បានផ្តល់ឱ្យខ្ញុំនូវលាភសក្ការៈដ៏ប្រសើរពីទ្រង់ហើយនោះ? ហើយខ្ញុំក៏មិនចង់ប្រឆាំងនឹងពួកអ្នកចំពោះអ្វីដែលខ្ញុំហាមឃាត់ដល់ពួកអ្នកអំពីវានោះដែរ ។ ខ្ញុំគ្មានបំណងអ្វីក្រៅពីការសម្របសម្រួលតាមអ្វីដែលខ្ញុំអាចធ្វើបាននោះឡើយ ។ ហើយគ្មានការណែនាំរបស់ខ្ញុំទេ លើកលែងតែមកពីអល់ឡោះប៉ុណ្ណោះ ។ ចំពោះទ្រង់ដែលខ្ញុំបានប្រគល់ការទុកចិត្ត ហើយខ្ញុំនឹងវិលត្រឡប់ទៅកាន់ទ្រង់វិញ ។

وَيَٰقَوۡمِ لَا يَجۡرِمَنَّكُمۡ شِقَاقِيٓ أَن يُصِيبَكُم
مِّثۡلُ مَآ أَصَابَ قَوۡمَ نُوحٍ أَوۡ قَوۡمَ هُودٍ أَوۡ قَوۡمَ
صَٰلِحٖۚ وَمَا قَوۡمُ لُوطٖ مِّنكُم بِبَعِيدٖ ٨٩

៨៩-ឱក្រុមរបស់ខ្ញុំ! ចូរកុំឱ្យកំហឹងរបស់ខ្ញុំបង្កជាសត្រូវនឹងពួកអ្នក ដែលវាអាចធ្វើឱ្យពួកអ្នកទទួលរងទារុណកម្មដូចអ្វីដែលក្រុមនួហ ឬក្រុមហ៊ូទ ឬក្រុមសទ្បេះបានទទួលឱ្យសោះ ។ ចំណែក(ទារុណកម្ម)ក្រុមលូតក៏នៅមិនឆ្ងាយពីពួកអ្នកដែរ ។

وَٱسۡتَغۡفِرُواْ رَبَّكُمۡ ثُمَّ تُوبُوٓاْ إِلَيۡهِۚ إِنَّ رَبِّي
رَحِيمٞ وَدُودٞ ٩٠

៩០-ហើយចូរពួកអ្នកសុំអភ័យទោសពីម្ចាស់របស់ពួកអ្នក បន្ទាប់មកចូរពួកអ្នកសារភាពកំហុសចំពោះទ្រង់ ។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំមហាអាណិត មហាស្រឡាញ់ ។

قَالُواْ يَٰشُعَيۡبُ مَا نَفۡقَهُ كَثِيرٗا مِّمَّا تَقُولُ وَإِنَّا
لَنَرَىٰكَ فِينَا ضَعِيفٗاۖ وَلَوۡلَا رَهۡطُكَ لَرَجَمۡنَٰكَۖ
وَمَآ أَنتَ عَلَيۡنَا بِعَزِيزٖ ٩١

៩១-ពួកគេបានតបវិញថាៈ ឱស្ហ៊ូអែប! ពួកយើងមិនសូវយល់ច្រើនទេនូវអ្វីដែលអ្នកនិយាយ ហើយពិតប្រាកដណាស់ យើងមើលឃើញអ្នកជាអ្នកទន់ខ្សោយនៅក្នុងចំណោមពួកយើង ។ ហើយប្រសិនបើគ្មានគ្រួសារអ្នកទេនោះ ពួកយើងនឹងគប់អ្នកនឹងដុំថ្មទៅហើយ ។ ហើយអ្នកមិនមែនជាអ្នកខ្លាំងសម្រាប់ពួកយើងឡើយ ។

قَالَ يَٰقَوۡمِ أَرَهۡطِيٓ أَعَزُّ عَلَيۡكُم مِّنَ ٱللَّهِ
وَٱتَّخَذۡتُمُوهُ وَرَآءَكُمۡ ظِهۡرِيًّاۖ إِنَّ رَبِّي بِمَا
تَعۡمَلُونَ مُحِيطٞ ٩٢

៩២-ស្ហ៊ូអែបបានតបវិញថាៈ ឱក្រុមរបស់ខ្ញុំ! តើគ្រួសាររបស់ខ្ញុំមានឥទ្ធិពលចំពោះពួកអ្នកជាងអល់ឡោះឬ? ដោយពួកអ្នកបានយកទ្រង់ដាក់ក្រោយខ្នងរបស់ពួកអ្នក ។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំដឹងជ្រួតជ្រាបនូវអ្វីៗដែលពួកអ្នកប្រព្រឹត្ត ។

وَيَٰقَوۡمِ ٱعۡمَلُواْ عَلَىٰ مَكَانَتِكُمۡ إِنِّي عَٰمِلٞۖ

៩៣-ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកអនុវត្តតាមផ្លូវរបស់ពួកអ្នក

سَوۡفَ تَعۡلَمُونَ مَن يَأۡتِيهِ عَذَابٞ يُخۡزِيهِ
وَمَنۡ هُوَ كَٰذِبٞۖ وَٱرۡتَقِبُوٓاْ إِنِّي مَعَكُمۡ
رَقِيبٞ ٩٣

وَلَمَّا جَآءَ أَمۡرُنَا نَجَّيۡنَا شُعَيۡبٗا وَٱلَّذِينَ
ءَامَنُواْ مَعَهُۥ بِرَحۡمَةٖ مِّنَّا وَأَخَذَتِ ٱلَّذِينَ
ظَلَمُواْ ٱلصَّيۡحَةُ فَأَصۡبَحُواْ فِي دِيَٰرِهِمۡ
جَٰثِمِينَ ٩٤

كَأَن لَّمۡ يَغۡنَوۡاْ فِيهَآۗ أَلَا بُعۡدٗا لِّمَدۡيَنَ كَمَا
بَعِدَتۡ ثَمُودُ ٩٥

وَلَقَدۡ أَرۡسَلۡنَا مُوسَىٰ بِـَٔايَٰتِنَا وَسُلۡطَٰنٖ
مُّبِينٍ ٩٦

إِلَىٰ فِرۡعَوۡنَ وَمَلَإِيْهِۦ فَٱتَّبَعُوٓاْ أَمۡرَ فِرۡعَوۡنَۖ
وَمَآ أَمۡرُ فِرۡعَوۡنَ بِرَشِيدٖ ٩٧

يَقۡدُمُ قَوۡمَهُۥ يَوۡمَ ٱلۡقِيَٰمَةِ فَأَوۡرَدَهُمُ ٱلنَّارَۖ
وَبِئۡسَ ٱلۡوِرۡدُ ٱلۡمَوۡرُودُ ٩٨

وَأُتۡبِعُواْ فِي هَٰذِهِۦ لَعۡنَةٗ وَيَوۡمَ ٱلۡقِيَٰمَةِۚ بِئۡسَ
ٱلرِّفۡدُ ٱلۡمَرۡفُودُ ٩٩

ذَٰلِكَ مِنۡ أَنۢبَآءِ ٱلۡقُرَىٰ نَقُصُّهُۥ عَلَيۡكَۖ مِنۡهَا
قَآئِمٞ وَحَصِيدٞ ١٠٠

ចុះ ចំណែកខ្ញុំក៏អនុវត្តតាមផ្លូវរបស់ខ្ញុំដែរ ។ ពួកអ្នកគង់តែនឹងដឹងពីជនដែលទារុណកម្មនឹងធ្លាក់ទៅលើគេដែលធ្វើឱ្យគេអាម៉ាស់ និងជនដែលភូតកុហក ។ ហើយចូរពួកអ្នករង់ចាំមើលចុះ ពិតប្រាកដណាស់ខ្ញុំក៏ជាអ្នករង់ចាំមើលជាមួយពួកអ្នកដែរ ។

៩៤-ហើយនៅពេលដែលបទបញ្ជា( ទារុណកម្ម )របស់យើងបានមកដល់ យើងបានសង្គ្រោះស្ទូអែបនិងបណ្តាអ្នកដែលបានជឿជាមួយគាត់ដោយក្តីមេត្តាករុណាពីយើង ហើយពេលនោះសម្រែកយ៉ាងខ្លាំងបានឆក់យកជីវិតពួកដែលបំពាន ហើយបានធ្វើឱ្យពួកគេស្លាប់មួយរំពេចនៅក្នុងផ្ទះរបស់ពួកគេ ។

៩៥-វាហាក់ដូចជាពួកគេមិនបានរស់នៅទីនោះ ។ ចូរដឹងថា! មហន្តរាយចំពោះអ្នកភូមិម៉ាទយ៉ាន់ក៏ដូចជាក្រុមសាមូដបានទទួលរងមហន្តរាយដែរ ។

៩៦-ហើយពិតប្រាកដណាស់ យើងបានបញ្ជូនមូសាជាមួយនឹងអាយ៉ាត់ៗរបស់យើងនិងភស្តុតាងដ៏ច្បាស់លាស់ ។

៩៧-ទៅកាន់ហ្វៀរអោន និងពួកមន្ត្រីរបស់គេ ប៉ុន្តែពួកគេបានធ្វើតាមបទបញ្ជារបស់ហ្វៀរអោន ខណៈដែលបទបញ្ជារបស់ហ្វៀរអោនពុំមានការចង្អុលបង្ហាញត្រឹមត្រូវ ។

៩៨-គេ( ហ្វៀរអោន )នឹងនាំមុខក្រុមរបស់គេនៅថ្ងៃបរលោករហូតដល់ពួកគេចូលភ្លើងនរក ហើយជាកន្លែងដ៏អាក្រក់បំផុតសម្រាប់អ្នកដែលនៅទីនោះ ។

៩៩-ហើយបណ្តាសានឹងត្រូវគេដាក់ទៅលើពួកគេនៅក្នុងលោកិយ និងថ្ងៃបរលោក ។ ( បណ្តាសា )នេះជារង្វាន់ដ៏អាក្រក់បំផុតសម្រាប់អ្នកដែលត្រូវទទួល ។

១០០-នោះគឺជាដំណឹងមួយចំនួនអំពីភូមិស្រុកដែលយើងនិទានវាប្រាប់ដល់អ្នក( មូហាំម៉ាត់ ) ។ ភូមិស្រុកមួយចំនួនបានបន្សល់ទុកស្លាកស្នាម និងមួយចំនួនទៀតមិនបានបន្សល់ទុកអ្វីឡើយ( បន្ទាប់ពីការបំផ្លាញនោះ ) ។

وَمَا ظَلَمۡنَٰهُمۡ وَلَٰكِن ظَلَمُوٓاْ أَنفُسَهُمۡۖ فَمَآ أَغۡنَتۡ عَنۡهُمۡ ءَالِهَتُهُمُ ٱلَّتِي يَدۡعُونَ مِن دُونِ ٱللَّهِ مِن شَيۡءٖ لَّمَّا جَآءَ أَمۡرُ رَبِّكَۖ وَمَا زَادُوهُمۡ غَيۡرَ تَتۡبِيبٖ ١٠١

១០១-ហើយយើងមិនបានបំពានលើពួកគេទេ ប៉ុន្តែពួកគេទេដែលបានបំពានលើខ្លួនឯងនោះ។ ដូច្នេះហើយព្រះនានារបស់ពួកគេដែលពួកគេបានបួងសួងសុំក្រៅពីអល់ឡោះមិនអាចផ្តល់ប្រយោជន៏អ្វីដល់ពួកគេឡើយនៅពេលដែលបទបញ្ជា(ទារុណកម្ម)នៃម្ចាស់របស់អ្នក(មូហាំម៉ាត់)បានមកដល់។ ហើយព្រះនានារបស់ពួកគេមិនបានបន្ថែមអ្វីដល់ពួកគេក្រៅពីគ្រោះមហន្តរាយឡើយ។

وَكَذَٰلِكَ أَخۡذُ رَبِّكَ إِذَآ أَخَذَ ٱلۡقُرَىٰ وَهِيَ ظَٰلِمَةٌۚ إِنَّ أَخۡذَهُۥٓ أَلِيمٞ شَدِيدٌ ١٠٢

១០២-នោះហើយជាទារុណកម្មនៃម្ចាស់របស់អ្នក។ នៅពេលណាដែលទ្រង់បានដាក់ទៅលើភូមិស្រុកណាមួយគឺដោយសារតែភូមិស្រុកនោះបានធ្វើខុស។ ពិតប្រាកដណាស់ ទារុណកម្មរបស់ទ្រង់គឺឈឺចាប់បំផុត។

إِنَّ فِي ذَٰلِكَ لَأٓيَةٗ لِّمَنۡ خَافَ عَذَابَ ٱلۡأٓخِرَةِۚ ذَٰلِكَ يَوۡمٞ مَّجۡمُوعٞ لَّهُ ٱلنَّاسُ وَذَٰلِكَ يَوۡمٞ مَّشۡهُودٞ ١٠٣

១០៣-ពិតប្រាកដណាស់ នៅក្នុង(ការដាក់ទារុណកម្ម)នោះគឺជាភស្តុតាងមួយសម្រាប់អ្នកដែលបានខ្លាចទារុណកម្មនាថ្ងៃបរលោក។ នៅថ្ងៃនោះមនុស្សលោកត្រូវបានគេប្រមូលផ្តុំសម្រាប់ទ្រង់។ ហើយនៅថ្ងៃនោះដែរ អ្វីៗទាំងអស់គឺនឹងត្រូវមានវត្តមាន(ដើម្បីកាត់សេចក្តី)។

وَمَا نُؤَخِّرُهُۥٓ إِلَّا لِأَجَلٖ مَّعۡدُودٖ ١٠٤

១០៤-ហើយយើងមិនបានពន្យារពេលថ្ងៃបរលោកក្រៅពីពេលដែលបានកំណត់នោះឡើយ។

يَوۡمَ يَأۡتِ لَا تَكَلَّمُ نَفۡسٌ إِلَّا بِإِذۡنِهِۦۚ فَمِنۡهُمۡ شَقِيّٞ وَسَعِيدٞ ١٠٥

១០៥-ថ្ងៃបរលោកមកដល់ គ្មានបុគ្គលណាម្នាក់អាចនិយាយបានទេ លុះត្រាតែមានការអនុញ្ញាតពីទ្រង់។ ដូច្នេះពួកគេមួយចំនួនទទួលសំណាងអាក្រក់ និងមួយចំនួនទៀតទទួលសំណាងល្អ។

فَأَمَّا ٱلَّذِينَ شَقُواْ فَفِي ٱلنَّارِ لَهُمۡ فِيهَا زَفِيرٞ وَشَهِيقٌ ١٠٦

១០៦-ចំណែកឯពួកដែលមានសំណាងអាក្រក់ គឺស្ថិតក្នុងឋាននរក ដែលសម្រាប់ពួកគេនៅក្នុងនោះ(ទទួលទារុណកម្មដ៏ឈឺចាប់)ដោយដកដង្ហើមចេញចូលស្ទើរមិនដល់គ្នា។

خَٰلِدِينَ فِيهَا مَا دَامَتِ ٱلسَّمَٰوَٰتُ وَٱلۡأَرۡضُ إِلَّا مَا شَآءَ رَبُّكَۚ إِنَّ رَبَّكَ فَعَّالٞ لِّمَا يُرِيدُ ١٠٧

១០៧-ពួកគេស្ថិតនៅក្នុងនោះជាអមតៈ ដរាបណាមេឃជាច្រើនជាន់ និងផែនដី(ថ្ងៃបរលោក)នៅស្ថិតស្ថេរ លើកលែងតែអ្វីដែលម្ចាស់របស់អ្នកមានចេតនាប៉ុណ្ណោះ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកធ្វើអ្វីក៏ដោយតាមតែទ្រង់ចង់។

۞ وَأَمَّا ٱلَّذِينَ سُعِدُواْ فَفِى ٱلْجَنَّةِ خَٰلِدِينَ فِيهَا
مَا دَامَتِ ٱلسَّمَٰوَٰتُ وَٱلْأَرْضُ إِلَّا مَا شَآءَ
رَبُّكَ عَطَآءً غَيْرَ مَجْذُوذٍ ١٠٨

១០៨-រីឯបណ្តាអ្នកដែលមានសំណាងល្អ គឺស្ថិតក្នុងឋានសួគ៌ ដោយពួកគេស្ថិតនៅទីនោះជាអមតៈ ដរាបណាមេឃជាច្រើនជាន់ និងផែនដី(ថ្ងៃបរលោក)នៅស្ថិតស្ថេរ លើកលែងតែអ្វីដែលម្ចាស់របស់អ្នកមានចេតនាប៉ុណ្ណោះ។ ទ្រង់នឹងផ្តល់ឱ្យពួកគេដោយគ្មានការកាត់ផ្តាច់ឡើយ ។

فَلَا تَكُ فِى مِرْيَةٍ مِّمَّا يَعْبُدُ هَٰٓؤُلَآءِ ۚ مَا
يَعْبُدُونَ إِلَّا كَمَا يَعْبُدُ ءَابَآؤُهُم مِّن قَبْلُ ۚ
وَإِنَّا لَمُوَفُّوهُمْ نَصِيبَهُمْ غَيْرَ مَنقُوصٍ ١٠٩

១០៩-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)កុំមានការសង្ស័យនូវអ្វីដែលពួកគេ(ពួកមូស្ហរីគីន)គោរពសក្ការៈ។ ពួកគេមិនគោរពសក្ការៈឡើយ លើកលែងតែដូចអ្វីដែលជីដូនជីតារបស់ពួកគេគោរពសក្ការៈពីមុនមកប៉ុណ្ណោះ។ ពិតប្រាកដណាស់ យើងនឹងបំពេញឱ្យពួកគេនូវទារុណកម្ម ដោយគ្មានការបន្ធូរបន្ថយឡើយ។

وَلَقَدْ ءَاتَيْنَا مُوسَى ٱلْكِتَٰبَ فَٱخْتُلِفَ فِيهِ ۚ
وَلَوْلَا كَلِمَةٌ سَبَقَتْ مِن رَّبِّكَ لَقُضِىَ بَيْنَهُمْ ۚ
وَإِنَّهُمْ لَفِى شَكٍّ مِّنْهُ مُرِيبٍ ١١٠

១១០-ហើយជាការពិតណាស់ យើងបានផ្តល់គម្ពីរ(តាវរ៉ត)ឱ្យមូសា តែបែរជាមានគេខ្វែងគំនិតគ្នាចំពោះវាទៅវិញ។ ហើយប្រសិនបើគ្មានការកំណត់(ទារុណកម្ម)ជាមុនពីម្ចាស់របស់អ្នកទេ គេពិតជានឹងកាត់សេចក្តីរវាងពួកគេ(ដាក់ទារុណកម្មក្នុងលោកិយ)ជាមិនខាន។ ហើយពិតប្រាកដណាស់ ពួកគេស្ថិតក្នុងភាពមន្ទិលសង្ស័យយ៉ាងខ្លាំងអំពីវា(គម្ពីរតួរអាន) ។

وَإِنَّ كُلًّا لَّمَّا لَيُوَفِّيَنَّهُمْ رَبُّكَ أَعْمَٰلَهُمْ ۚ إِنَّهُۥ
بِمَا يَعْمَلُونَ خَبِيرٌ ١١١

១១១-ហើយពិតប្រាកដណាស់ គ្រប់ក្រុមទាំងអស់(ដែលខ្វែងគំនិតគ្នា) គឺម្ចាស់របស់អ្នក ពិតជានឹងតបស្នងឱ្យពួកគេនូវគ្រប់ទង្វើរបស់ពួកគេជាមិនខាន។ ពិតប្រាកដណាស់ ទ្រង់មហាដឹងនូវអ្វីដែលពួកគេប្រព្រឹត្ត។

فَٱسْتَقِمْ كَمَآ أُمِرْتَ وَمَن تَابَ مَعَكَ وَلَا
تَطْغَوْاْ ۚ إِنَّهُۥ بِمَا تَعْمَلُونَ بَصِيرٌ ١١٢

១១២-ដូច្នេះចូរអ្នក(មូហាំម៉ាត់)ប្រកាន់ខ្ជាប់នូវគោលជំហរឱ្យរឹងប៉ឹង ដូចអ្វីដែលគេ(អល់ឡោះ)បានបញ្ជាចំពោះអ្នក និងអ្នកដែលបានសារភាពកំហុស(ចំពោះអល់ឡោះ)ជាមួយអ្នក ហើយចូរពួកអ្នកកុំបំពានឱ្យសោះ។ ពិតប្រាកដណាស់ ទ្រង់ជាអ្នកឃើញទាំងអស់នូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

وَلَا تَرْكَنُوٓاْ إِلَى ٱلَّذِينَ ظَلَمُواْ فَتَمَسَّكُمُ ٱلنَّارُ
وَمَا لَكُم مِّن دُونِ ٱللَّهِ مِنْ أَوْلِيَآءَ ثُمَّ لَا

១១៣-ហើយចូរពួកអ្នកកុំលំអៀងទៅចំពោះពួកដែលបានបំពាន ដែលជាហេតុធ្វើឱ្យពួកអ្នកត្រូវនរកឱ្យសោះ។ ហើយពួកអ្នកគ្មានអ្នកគាំពារណាក្រៅពីអល់ឡោះឡើយ បន្ទាប់មកពួកអ្នក

ក៏គ្មានអ្នកណាជួយដែរ ។

១១៤-ហើយចូរអ្នកប្រតិបត្តិសឡាតនៅចុងទាំងពីរនៃពេលថ្ងៃ( ព្រឹកល្ងាចគឺៈ ស៊ូព្ហស ស៊ូហ្វូរ និងអាសើរ ) និងរយៈពេលដំបូងនៃពេលយប់( ម៉ាហ្គ្រិប និងអ៊ីស្ហា ) ។ ពិតប្រាកដណាស់ អំពើល្អលុបបំបាត់អំពើអាក្រក់ ។ នោះគឺជាការរំលឹកទូន្មានសម្រាប់បណ្តាអ្នកដែលមានសតិសម្បជញ្ញៈ ។

១១៥-ហើយចូរអ្នកអត់ធ្មត់ចុះ ពិតប្រាកដណាស់ អល់ឡោះមិនធ្វើឱ្យបាត់បង់នូវផលបុណ្យរបស់បណ្តាអ្នកដែលសាងអំពើល្អនោះឡើយ ។

១១៦-ហេតុអ្វីបានជាកាលពីជំនាន់មុនៗពួកអ្នកគ្មានអ្នកមានឧត្តមគតិនៅសេសសល់ ដើម្បីពួកគេហាមឃាត់គ្នាអំពីការបង្កវិនាសកម្មនៅលើផែនដីនេះក្រៅពីមួយចំនួនតូចនៃអ្នកដែលយើងបានសង្គ្រោះក្នុងចំណោមពួកគេ? ហើយពួកដែលបំពានបានធ្វើតាមអ្វីដែលពួកគេសប្បាយរីករាយនៅក្នុងលោកិយ ។ ហើយពួកគេជាពួកដែលប្រព្រឹត្តបាបកម្ម ។

១១៧-ម្ចាស់របស់អ្នកមិនដែលកំទេចភូមិស្រុកណាមួយដោយអយុត្តិធម៌ ខណៈដែលអ្នកភូមិស្រុកនោះជាអ្នកដែលសាងអំពើល្អនោះឡើយ ។

១១៨-ប្រសិនបើម្ចាស់របស់អ្នកមានចេតនា ទ្រង់ប្រាកដជានឹងធ្វើឱ្យមនុស្សលោកក្លាយជាប្រជាជាតិតែមួយ( សាសនាអ៊ីស្លាមតែមួយ ) ។ ប៉ុន្តែពួកគេនៅតែខ្វែងគំនិតគ្នា ។

១១៩-លើកលែងតែអ្នកណាដែលម្ចាស់របស់អ្នកបានអាណិតស្រឡាញ់ប៉ុណ្ណោះ ។ ហេតុនេះហើយទើបទ្រង់បានបង្កើតពួកគេ ។ ហើយពាក្យសន្យានៃម្ចាស់របស់អ្នកបានកំណត់រួចជាស្រេច( ដោយទ្រង់ពោលថា ) ពិតប្រាកដណាស់ យើងនឹងបំពេញនរកជើហាន់ណាំដោយជិននិងមនុស្សលោកមួយចំនួនជាមួយគ្នាទាំងអស់ ។

១២០-ហើយគ្រប់រឿងទាំងអស់ដែលយើងនិទានប្រាប់អ្នក ( មូហាំម៉ាត់ ) អំពីដំណឹងរបស់បណ្តាអ្នកនាំសារ គឺដើម្បីយើងនឹង

تُنصَرُونَ ﴿١١٣﴾

وَأَقِمِ ٱلصَّلَوٰةَ طَرَفَيِ ٱلنَّهَارِ وَزُلَفًا مِّنَ ٱلَّيۡلِۚ إِنَّ ٱلۡحَسَنَٰتِ يُذۡهِبۡنَ ٱلسَّيِّـَٔاتِۚ ذَٰلِكَ ذِكۡرَىٰ لِلذَّٰكِرِينَ ﴿١١٤﴾

وَٱصۡبِرۡ فَإِنَّ ٱللَّهَ لَا يُضِيعُ أَجۡرَ ٱلۡمُحۡسِنِينَ ﴿١١٥﴾

فَلَوۡلَا كَانَ مِنَ ٱلۡقُرُونِ مِن قَبۡلِكُمۡ أُوْلُواْ بَقِيَّةٖ يَنۡهَوۡنَ عَنِ ٱلۡفَسَادِ فِي ٱلۡأَرۡضِ إِلَّا قَلِيلٗا مِّمَّنۡ أَنجَيۡنَا مِنۡهُمۡۗ وَٱتَّبَعَ ٱلَّذِينَ ظَلَمُواْ مَآ أُتۡرِفُواْ فِيهِ وَكَانُواْ مُجۡرِمِينَ ﴿١١٦﴾

وَمَا كَانَ رَبُّكَ لِيُهۡلِكَ ٱلۡقُرَىٰ بِظُلۡمٖ وَأَهۡلُهَا مُصۡلِحُونَ ﴿١١٧﴾

وَلَوۡ شَآءَ رَبُّكَ لَجَعَلَ ٱلنَّاسَ أُمَّةٗ وَٰحِدَةٗۖ وَلَا يَزَالُونَ مُخۡتَلِفِينَ ﴿١١٨﴾

إِلَّا مَن رَّحِمَ رَبُّكَۚ وَلِذَٰلِكَ خَلَقَهُمۡۗ وَتَمَّتۡ كَلِمَةُ رَبِّكَ لَأَمۡلَأَنَّ جَهَنَّمَ مِنَ ٱلۡجِنَّةِ وَٱلنَّاسِ أَجۡمَعِينَ ﴿١١٩﴾

وَكُلّٗا نَّقُصُّ عَلَيۡكَ مِنۡ أَنۢبَآءِ ٱلرُّسُلِ مَا نُثَبِّتُ

ពង្រឹងចិត្តរបស់អ្នកតាមរយៈវា។ ហើយរឿងពិតនៅក្នុង(ជំពូក គម្ពីរគួរអាន) នេះបានមកដល់អ្នក និងជាដំបូន្មាន ហើយនិងជាការក្រើនរំលឹកមួយសម្រាប់អ្នកដែលមានជំនឿទាំងអស់។

១២១-ហើយចូរអ្នក(មូហាំម៉ាត់) ពោលទៅកាន់ពួកដែលគ្មានជំនឿថា: ចូរពួកអ្នកអនុវត្តតាមផ្លូវរបស់ពួកអ្នក ជាការពិតណាស់ ពួកយើងជាអ្នកអនុវត្ត(តាមផ្លូវរបស់ពួកយើង)។

១២២-ហើយចូរពួកអ្នករង់ចាំ(លទ្ធផលចុងក្រោយរបស់ពួកយើង)ចុះ ពិតប្រាកដណាស់ពួកយើងក៏ជាអ្នករង់ចាំ(លទ្ធផលចុងក្រោយរបស់ពួកអ្នក)ដែរ។

១២៣-ហើយប្រការអាថ៌កំបាំងដែលមាននៅលើមេឃជាច្រើនជាន់ និងផែនដីជាកម្មសិទ្ធិរបស់អល់ឡោះ ហើយកិច្ចការទាំងអស់នឹងវិលត្រឡប់ទៅកាន់ទ្រង់វិញ។ ដូច្នេះ ចូរអ្នកគោរពសក្ការៈចំពោះទ្រង់ និងប្រគល់ការទុកចិត្តចំពោះទ្រង់ចុះ។ ហើយម្ចាស់របស់អ្នកមិនព្រងើយកន្តើយចំពោះអ្វីដែលពួកអ្នកប្រព្រឹត្តឡើយ។

## ជំពូកយូសុហ្វ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-អាលីហ្វ ឡាម រ៉ ។ ទាំងនេះគឺជាអាយ៉ាត់ៗរបស់គម្ពីរ (គួរអាន)ដ៏ច្បាស់លាស់។

២-ពិតប្រាកដណាស់ យើងបានបញ្ចុះវា(គម្ពីរគួរអាន)ជាភាសាអារ៉ាប់ ដើម្បីឱ្យពួកអ្នកស្វែងយល់។

៣-យើងនិទានរឿងមួយដែលល្អជាងគេក្នុងចំណោមរឿងប្រវត្តិសាស្ត្រទាំងឡាយនូវអ្វីដែលយើងបានផ្តល់វ៉ាហ៊ីដល់អ្នក (មូហាំម៉ាត់) តាមរយៈគម្ពីរគួរអាននេះឱ្យអ្នកស្តាប់។ ហើយពីមុននេះអ្នកពិតជាស្ថិតក្នុងចំណោមអ្នកដែលមិនដឹងអ្វីសោះ។

៤-(ចូរចងចាំ) នៅពេលដែលយូសុហ្វបានពោលទៅកាន់ឪពុករបស់គាត់ថា: ឱឪពុករបស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំបានសុបិនឃើញ

بِهِۦ فُؤَادَكَۚ وَجَآءَكَ فِي هَٰذِهِ ٱلۡحَقُّ وَمَوۡعِظَةٞ
وَذِكۡرَىٰ لِلۡمُؤۡمِنِينَ ١٢٠

وَقُل لِّلَّذِينَ لَا يُؤۡمِنُونَ ٱعۡمَلُواْ عَلَىٰ مَكَانَتِكُمۡ
إِنَّا عَٰمِلُونَ ١٢١

وَٱنتَظِرُوٓاْ إِنَّا مُنتَظِرُونَ ١٢٢

وَلِلَّهِ غَيۡبُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَإِلَيۡهِ يُرۡجَعُ
ٱلۡأَمۡرُ كُلُّهُۥ فَٱعۡبُدۡهُ وَتَوَكَّلۡ عَلَيۡهِۚ وَمَا
رَبُّكَ بِغَٰفِلٍ عَمَّا تَعۡمَلُونَ ١٢٣

## سورة يوسف

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

الٓرۚ تِلۡكَ ءَايَٰتُ ٱلۡكِتَٰبِ ٱلۡمُبِينِ ١

إِنَّآ أَنزَلۡنَٰهُ قُرۡءَٰنًا عَرَبِيّٗا لَّعَلَّكُمۡ
تَعۡقِلُونَ ٢

نَحۡنُ نَقُصُّ عَلَيۡكَ أَحۡسَنَ ٱلۡقَصَصِ بِمَآ
أَوۡحَيۡنَآ إِلَيۡكَ هَٰذَا ٱلۡقُرۡءَانَ وَإِن كُنتَ
مِن قَبۡلِهِۦ لَمِنَ ٱلۡغَٰفِلِينَ ٣

إِذۡ قَالَ يُوسُفُ لِأَبِيهِ يَٰٓأَبَتِ إِنِّي رَأَيۡتُ أَحَدَ
عَشَرَ كَوۡكَبٗا وَٱلشَّمۡسَ وَٱلۡقَمَرَ رَأَيۡتُهُمۡ لِي

ផ្កាយដប់មួយដួង និងព្រះអាទិត្យ ហើយនិងព្រះច័ន្ទ ខ្ញុំបានឃើញពួកវាស៊ូជូតចំពោះខ្ញុំ ។

៥-គាត់(ឪពុកយូសុហ្វ) បានពោលថាៈ ឱកូនសម្លាញ់របស់ខ្ញុំ! ចូរកុំនិទានរឿងសុបិនរបស់ឯងឱ្យបងប្អូនឯងស្តាប់ឱ្យសោះ ជាហេតុនាំឱ្យពួកគេរៀបចំគ្រប់ឧបាយកលដើម្បីបោកប្រាស់ឯង ។ ពិតប្រាកដណាស់ ស្ហៃតនគឺជាសត្រូវនឹងមនុស្សលោកយ៉ាងច្បាស់លាស់ ។

៦-ដូច្នេះហើយម្ចាស់របស់ឯងនឹងជ្រើសរើសឯង និងបង្រៀនឯងឱ្យចេះកាត់សុបិន ហើយទ្រង់នឹងបំពេញនៀកម៉ាត់របស់ទ្រង់ឱ្យឯង និងពូជពង្សរបស់យ៉ាក់កូបក៏ដូចជាទ្រង់បានបំពេញវាឱ្យជីតាទាំងពីរនាក់របស់ឯង អ៊ីព្រាហ៊ីម និងអ៊ីសហាកពីមុនមកដែរ ។ ពិតប្រាកដណាស់ ម្ចាស់របស់ឯងមហាដឹង មហាគតិបណ្ឌិត ។

៧-ជាការពិតណាស់ នៅក្នុងរឿងរបស់យូសុហ្វនិងបងប្អូនរបស់គាត់ គឺជាភស្តុតាង១សម្រាប់ពួកដែលសួរ ។

៨-នៅពេលដែលពួកគេ(កូន១) បាននិយាយថាៈ ពិតប្រាកដណាស់ យូសុហ្វនិងប្អូនប្រុសរបស់គេ(ពុនយ៉ាមីន) ជាទីស្រឡាញ់របស់ឪពុកយើងជាងពួកយើង ទោះបីពួកយើងជាក្រុមដែលខ្លាំងក្លាក៏ដោយ ។ ពិតប្រាកដណាស់ ឪពុករបស់ពួកយើងជាអ្នកដែលស្ថិតក្នុងភាពលំអៀងយ៉ាងច្បាស់លាស់ ។

៩-ចូរពួកអ្នកសម្លាប់យូសុហ្វ ឬយកគេទៅបោះចោលនៅតំបន់ដែលឆ្ងាយ ពេលនោះឪពុករបស់ពួកអ្នកនឹងបែរមករកពួកអ្នកវិញ ហើយពួកអ្នកនឹងក្លាយជាក្រុមដែលល្អត្រឹមត្រូវបន្ទាប់ពីនោះ ។

១០-ម្នាក់ក្នុងចំណោមពួកគេបាននិយាយថាៈ ចូរពួកអ្នកកុំសម្លាប់យូសុហ្វអ្វី តែពួកអ្នកត្រូវបោះគេចូលទៅក្នុងបាតអណ្តូងវិញ ពេលនោះក្បួនអ្នកដំណើរមួយចំនួននឹងរើសគេជាមិនខាន ប្រសិនបើពួកអ្នកចង់ធ្វើ ។

១១-ពួកគេបាននិយាយថាៈ ឱឪពុករបស់ពួកយើង! ហេតុអ្វី

سَٰجِدِينَ ﴿٤﴾

قَالَ يَٰبُنَيَّ لَا تَقۡصُصۡ رُءۡيَاكَ عَلَىٰٓ إِخۡوَتِكَ فَيَكِيدُواْ لَكَ كَيۡدًاۖ إِنَّ ٱلشَّيۡطَٰنَ لِلۡإِنسَٰنِ عَدُوّٞ مُّبِينٞ ﴿٥﴾

وَكَذَٰلِكَ يَجۡتَبِيكَ رَبُّكَ وَيُعَلِّمُكَ مِن تَأۡوِيلِ ٱلۡأَحَادِيثِ وَيُتِمُّ نِعۡمَتَهُۥ عَلَيۡكَ وَعَلَىٰٓ ءَالِ يَعۡقُوبَ كَمَآ أَتَمَّهَا عَلَىٰٓ أَبَوَيۡكَ مِن قَبۡلُ إِبۡرَٰهِيمَ وَإِسۡحَٰقَۚ إِنَّ رَبَّكَ عَلِيمٌ حَكِيمٞ ﴿٦﴾

۞ لَّقَدۡ كَانَ فِي يُوسُفَ وَإِخۡوَتِهِۦٓ ءَايَٰتٞ لِّلسَّآئِلِينَ ﴿٧﴾

إِذۡ قَالُواْ لَيُوسُفُ وَأَخُوهُ أَحَبُّ إِلَىٰٓ أَبِينَا مِنَّا وَنَحۡنُ عُصۡبَةٌ إِنَّ أَبَانَا لَفِي ضَلَٰلٖ مُّبِينٍ ﴿٨﴾

ٱقۡتُلُواْ يُوسُفَ أَوِ ٱطۡرَحُوهُ أَرۡضٗا يَخۡلُ لَكُمۡ وَجۡهُ أَبِيكُمۡ وَتَكُونُواْ مِنۢ بَعۡدِهِۦ قَوۡمٗا صَٰلِحِينَ ﴿٩﴾

قَالَ قَآئِلٞ مِّنۡهُمۡ لَا تَقۡتُلُواْ يُوسُفَ وَأَلۡقُوهُ فِي غَيَٰبَتِ ٱلۡجُبِّ يَلۡتَقِطۡهُ بَعۡضُ ٱلسَّيَّارَةِ إِن كُنتُمۡ فَٰعِلِينَ ﴿١٠﴾

قَالُواْ يَٰٓأَبَانَا مَا لَكَ لَا تَأۡمَ۬نَّا عَلَىٰ يُوسُفَ

បានជាអ្នកមិនទុកចិត្តពួកយើងចំពោះយូសុហ្វ? ពិតប្រាកដណាស់ពួកយើងសុទ្ធតែជាអ្នកដែលមានបំណងល្អចំពោះគេ។

១២-សូមឪពុកឱ្យគេទៅជាមួយពួកខ្ញុំនៅថ្ងៃស្អែកនេះ ដើម្បីឱ្យគេបានរីករាយ និងបានលេងសប្បាយ។ ហើយពិតប្រាកដណាស់ពួកខ្ញុំគឺជាអ្នកដែលមើលថែរក្សាគេ ។

១៣-គាត់(ឪពុក) បានពោលថា: តាមពិតវាធ្វើឱ្យយើងព្រួយបារម្ភពេលដែលពួកឯងនាំគេទៅ ហើយយើងខ្លាចតែឆ្កែចចកស៊ីគេនៅពេលដែលពួកឯងព្រងើយកន្តើយនឹងគេ។

១៤-ពួកគេ(កូនៗ) បាននិយាយថា: ប្រសិនបើចចកស៊ីគេ ដោយពួកយើងជាក្រុមដែលខ្លាំងក្លានោះ ពួកយើងពិតជាអ្នកខាតបង់ជាមិនខានបើដូច្នោះមែន។

១៥-ហើយនៅពេលដែលពួកគេនាំយូសុហ្វទៅជាមួយ និងបានឯកភាពគ្នាដើម្បីយកគេទៅចោលក្នុងបាតអណ្តូង យើងក៏បានផ្តល់វ៉ាហ៊ីដល់គេថា: ឯងប្រាកដជានឹងប្រាប់ពួកគេ(នៅថ្ងៃណាមួយ) អំពីទង្វើរបស់ពួកគេនេះ ដោយពួកគេមិនដឹងខ្លួនឡើយ។

១៦-ហើយពួកគេបានវិលត្រឡប់មកជួបឪពុករបស់ពួកគេវិញក្នុងពេលព្រលប់ ដោយពួកគេនាំគ្នាយំ។

១៧-ពួកគេបាននិយាយថា: ឱឪពុករបស់ពួកខ្ញុំ! ពិតប្រាកដណាស់ ពួកខ្ញុំបានទៅរត់ប្រណាំងគ្នាលេង ហើយពួកខ្ញុំបានទុកយូសុហ្វនៅជាមួយឥវ៉ាន់របស់ពួកខ្ញុំ ស្រាប់តែឆ្កែចចកបានស៊ីគេ។ ប៉ុន្តែឪពុកនៅតែមិនជឿពួកខ្ញុំឡើយ ទោះបីជាពួកយើងនិយាយការពិតយ៉ាងណាក៏ដោយ។

១៨-ហើយពួកគេបាននាំអាវរបស់គេ(យូសុហ្វ) ដែលប្រឡាក់ឈាមក្លែងក្លាយមកជាមួយ។ គាត់(ឪពុក) បានពោលថា: ទេ! តាមពិតពួកអ្នកទាំងអស់គ្នាទេដែលជាអ្នកប្រឌិតរឿងនេះឡើង។ ដូចនេះ ការអត់ធ្មត់វាជាការប្រសើរបំផុត(សម្រាប់យើង) ហើយ

وَإِنَّا لَهُۥ لَنَٰصِحُونَ ﴿١١﴾

أَرۡسِلۡهُ مَعَنَا غَدٗا يَرۡتَعۡ وَيَلۡعَبۡ وَإِنَّا لَهُۥ لَحَٰفِظُونَ ﴿١٢﴾

قَالَ إِنِّي لَيَحۡزُنُنِيٓ أَن تَذۡهَبُواْ بِهِۦ وَأَخَافُ أَن يَأۡكُلَهُ ٱلذِّئۡبُ وَأَنتُمۡ عَنۡهُ غَٰفِلُونَ ﴿١٣﴾

قَالُواْ لَئِنۡ أَكَلَهُ ٱلذِّئۡبُ وَنَحۡنُ عُصۡبَةٌ إِنَّآ إِذٗا لَّخَٰسِرُونَ ﴿١٤﴾

فَلَمَّا ذَهَبُواْ بِهِۦ وَأَجۡمَعُوٓاْ أَن يَجۡعَلُوهُ فِي غَيَٰبَتِ ٱلۡجُبِّۚ وَأَوۡحَيۡنَآ إِلَيۡهِ لَتُنَبِّئَنَّهُم بِأَمۡرِهِمۡ هَٰذَا وَهُمۡ لَا يَشۡعُرُونَ ﴿١٥﴾

وَجَآءُوٓ أَبَاهُمۡ عِشَآءٗ يَبۡكُونَ ﴿١٦﴾

قَالُواْ يَٰٓأَبَانَآ إِنَّا ذَهَبۡنَا نَسۡتَبِقُ وَتَرَكۡنَا يُوسُفَ عِندَ مَتَٰعِنَا فَأَكَلَهُ ٱلذِّئۡبُۖ وَمَآ أَنتَ بِمُؤۡمِنٖ لَّنَا وَلَوۡ كُنَّا صَٰدِقِينَ ﴿١٧﴾

وَجَآءُو عَلَىٰ قَمِيصِهِۦ بِدَمٖ كَذِبٖۚ قَالَ بَلۡ سَوَّلَتۡ لَكُمۡ أَنفُسُكُمۡ أَمۡرٗاۖ فَصَبۡرٞ جَمِيلٞۖ وَٱللَّهُ ٱلۡمُسۡتَعَانُ عَلَىٰ مَا تَصِفُونَ ﴿١٨﴾

មានតែអល់ឡោះទេដែលត្រូវសុំឱ្យជួយបង្ហាញនូវអ្វីដែលពួកអ្នកកំពុងតែរ៉ាយរ៉ាប់នោះ ។

وَجَآءَتْ سَيَّارَةٌ فَأَرْسَلُواْ وَارِدَهُمْ فَأَدْلَىٰ دَلْوَهُۥ ۖ قَالَ يَٰبُشْرَىٰ هَٰذَا غُلَٰمٌ ۚ وَأَسَرُّوهُ بِضَٰعَةً ۚ وَٱللَّهُ عَلِيمٌۢ بِمَا يَعْمَلُونَ ﴿١٩﴾

១៩-ក្រោយមកក្បួនអ្នកដំណើរក៏បានមកដល់ ហើយពួកគេបានបញ្ជូនអ្នកដងទឹកម្នាក់របស់ពួកគេ ហើយគេក៏បានទម្លាក់យោងទឹករបស់គេចូលទៅក្នុងអណ្តូងនោះ ។ គេក៏និយាយថាៈ អូ អស្ចារ្យមែន! នេះជាក្មេងប្រុសទេតើ! ហើយពួកគេក៏យកគេ(យូសុហ្វ)លាក់ទុកធ្វើជាទំនិញ ។ ហើយអល់ឡោះមហាដឹងនូវអ្វីដែលពួកគេប្រព្រឹត្ត ។

وَشَرَوْهُ بِثَمَنٍۭ بَخْسٍ دَرَٰهِمَ مَعْدُودَةٍ وَكَانُواْ فِيهِ مِنَ ٱلزَّٰهِدِينَ ﴿٢٠﴾

២០-ហើយពួកគេបានលក់យូសុហ្វដោយតម្លៃថោកបំផុតតែប៉ុន្មានទៀរហាំប៉ុណ្ណោះ ហើយពួកគេជាពួកដែលមិនឱ្យតម្លៃចំពោះយូសុហ្វឡើយ ។

وَقَالَ ٱلَّذِى ٱشْتَرَىٰهُ مِن مِّصْرَ لِٱمْرَأَتِهِۦٓ أَكْرِمِى مَثْوَىٰهُ عَسَىٰٓ أَن يَنفَعَنَآ أَوْ نَتَّخِذَهُۥ وَلَدًا ۚ وَكَذَٰلِكَ مَكَّنَّا لِيُوسُفَ فِى ٱلْأَرْضِ وَلِنُعَلِّمَهُۥ مِن تَأْوِيلِ ٱلْأَحَادِيثِ ۚ وَٱللَّهُ غَالِبٌ عَلَىٰٓ أَمْرِهِۦ وَلَٰكِنَّ أَكْثَرَ ٱلنَّاسِ لَا يَعْلَمُونَ ﴿٢١﴾

២១-បុរសម្នាក់មកពីអេហ្ស៊ីបដែលបានទិញយូសុហ្វបាននិយាយទៅកាន់ភរិយារបស់គេថាៈ ចូររៀបចំកន្លែងស្នាក់នៅរបស់គេឱ្យបានសមរម្យផង សង្ឃឹមថាគេអាចផ្តល់ផលប្រយោជន៍ដល់យើង ឬក៏យើងអាចយកគេធ្វើជាកូនតែម្តង ។ ដូច្នោះដែរ យើងបានផ្តល់ការរស់នៅសម្រាប់យូសុហ្វនៅលើផែនដី ដើម្បីបង្រៀនគេអំពីការចេះបកស្រាយគ្រប់ហេតុការណ៍ទាំងអស់ដែលបានកើតឡើង ហើយអល់ឡោះជាម្ចាស់ដែលមានអានុភាពបំផុតលើភារកិច្ចរបស់ទ្រង់ ។ ប៉ុន្តែមនុស្សភាគច្រើនមិនដឹងឡើយ ។

وَلَمَّا بَلَغَ أَشُدَّهُۥٓ ءَاتَيْنَٰهُ حُكْمًا وَعِلْمًا ۚ وَكَذَٰلِكَ نَجْزِى ٱلْمُحْسِنِينَ ﴿٢٢﴾

២២-ហើយនៅពេលគេ(យូសុហ្វ)ធំពេញវ័យ យើងបានផ្តល់ឱ្យគេនូវភាពឈ្លាសវៃ និងចំណេះដឹង ។ ហើយដូច្នោះដែរ យើងនឹងតបស្នងចំពោះបណ្តាអ្នកដែលសាងអំពើល្អ ។

وَرَٰوَدَتْهُ ٱلَّتِى هُوَ فِى بَيْتِهَا عَن نَّفْسِهِۦ وَغَلَّقَتِ ٱلْأَبْوَٰبَ وَقَالَتْ هَيْتَ لَكَ ۚ قَالَ مَعَاذَ ٱللَّهِ ۖ إِنَّهُۥ رَبِّىٓ أَحْسَنَ مَثْوَاىَ ۖ إِنَّهُۥ لَا يُفْلِحُ ٱلظَّٰلِمُونَ ﴿٢٣﴾

២៣-ហើយស្ត្រីដែលយូសុហ្វនៅផ្ទះរបស់នាងចង់ប្រលោមកាមគុណជាមួយគេ ហើយនាងបានបិទទ្វារទាំងអស់ រួចនិយាយថាៈ សូមអ្នកមកទីនេះ! យូសុហ្វឆ្លើយថាៈ ខ្ញុំសុំពីអល់ឡោះឱ្យចៀសផុត(អំពីប្រការនេះ) ។ ពិតប្រាកដណាស់ គាត់(ស្វាមីរបស់នាង)ជាចៅហ្វាយរបស់ខ្ញុំដែលបានផ្តល់ការរស់នៅដ៏ល្អប្រសើរដល់ខ្ញុំ ។ ពិតប្រាកដណាស់ ពួកដែលបំពាននោះនឹងមិនទទួលជោគជ័យឡើយ ។

២៤-ស្ត្រីនោះមានចំណង់លើយូសុហ្វ ហើយយូសុហ្វក៏មានចំណង់ទៅលើនាងវិញដែរ បើសិនជាមិនបានឃើញភស្តុតាងនៃម្ចាស់របស់គេទេនោះ ។ ដូច្នោះដែរ គឺដើម្បីយើងនឹងបញ្ចៀសគេឱ្យឆ្ងាយពីអំពើអាក្រក់ និងអំពើកាមគុណខុសច្បាប់ទាំងឡាយ ។ តាមការពិត យូសុហ្វគឺស្ថិតក្នុងចំណោមខ្ញុំទាំងឡាយរបស់យើង ដែលយើងបានជ្រើសរើស( ធ្វើជាអ្នកនាំសារ) ដែរ ។

២៥-ហើយពួកគេទាំងពីរបានប្រតាយប្រតប់គ្នាទៅរកទ្វារ ហើយនាងក៏បានហែកអាវគេពីក្រោយ ហើយគេទាំងពីរបានប្រទះឃើញស្វាមីរបស់នាងនៅមាត់ទ្វារ នាងក៏បានសួរថា: លទ្ធផលអ្នកដែលមានបំណងអាក្រក់ទៅលើភរិយារបស់លោកគ្មានអ្វីក្រៅពីការឃុំឃាំង ឬដាក់ទណ្ឌកម្មដ៏ឈឺចាប់នោះឡើយ ។

២៦-យូសុហ្វបានពោលថា: នាងទេដែលជាអ្នកចង់ប្រលោមមកលើខ្លួនខ្ញុំនោះ ។ ហើយសាក្សីម្នាក់ពីគ្រួសាររបស់នាងបានអះអាងថា: ប្រសិនបើអាវរបស់គាត់( យូសុហ្វ) រហែកពីមុខនោះ នាងជាអ្នកស្មោះត្រង់ ហើយគាត់ស្ថិតក្នុងចំណោមអ្នកភូតកុហក ។

២៧-តែប្រសិនបើអាវរបស់គាត់រហែកពីខាងក្រោយវិញ គឺនាងជាអ្នកកុហក ហើយគាត់ស្ថិតក្នុងចំណោមអ្នកដែលត្រឹមត្រូវ ។

២៨-ហើយនៅពេលដែលគេ( ស្វាមី) បានឃើញអាវរបស់យូសុហ្វរហែកខាងក្រោយ គេក៏និយាយថា: តាមពិតវាជាឧបាយកលរបស់ពួកនាង ។ ពិតប្រាកដ ឧបាយកលរបស់ពួកនាងធំធេងបំផុត ។

២៩-( ស្វាមីរបស់នាងបាននិយាយថា) ឱយូសុហ្វ! ចូរអ្នកបំភ្លេចរឿងនេះចោលចុះ ។ ហើយចូរនាងសុំអភ័យទោសនូវកំហុសរបស់នាង តាមពិតនាងស្ថិតក្នុងចំណោមអ្នកដែលមានកំហុស ។

៣០-ហើយបណ្តាស្ត្រីដែលនៅក្នុងទីក្រុងបាននិយាយថា: ភរិយារបស់អាហ្ស៊ីសចង់ប្រលោមទៅលើអ្នកបម្រើរបស់ខ្លួន តាមពិតសេចក្តីស្រឡាញ់បានធ្វើឱ្យនាងងប់ងុល ។ ពិតប្រាកដណាស់

وَلَقَدۡ هَمَّتۡ بِهِۦۖ وَهَمَّ بِهَا لَوۡلَآ أَن رَّءَا بُرۡهَٰنَ رَبِّهِۦۚ كَذَٰلِكَ لِنَصۡرِفَ عَنۡهُ ٱلسُّوٓءَ وَٱلۡفَحۡشَآءَۚ إِنَّهُۥ مِنۡ عِبَادِنَا ٱلۡمُخۡلَصِينَ ٢٤

وَٱسۡتَبَقَا ٱلۡبَابَ وَقَدَّتۡ قَمِيصَهُۥ مِن دُبُرٖ وَأَلۡفَيَا سَيِّدَهَا لَدَا ٱلۡبَابِۚ قَالَتۡ مَا جَزَآءُ مَنۡ أَرَادَ بِأَهۡلِكَ سُوٓءًا إِلَّآ أَن يُسۡجَنَ أَوۡ عَذَابٌ أَلِيمٞ ٢٥

قَالَ هِيَ رَٰوَدَتۡنِي عَن نَّفۡسِيۚ وَشَهِدَ شَاهِدٞ مِّنۡ أَهۡلِهَآ إِن كَانَ قَمِيصُهُۥ قُدَّ مِن قُبُلٖ فَصَدَقَتۡ وَهُوَ مِنَ ٱلۡكَٰذِبِينَ ٢٦

وَإِن كَانَ قَمِيصُهُۥ قُدَّ مِن دُبُرٖ فَكَذَبَتۡ وَهُوَ مِنَ ٱلصَّٰدِقِينَ ٢٧

فَلَمَّا رَءَا قَمِيصَهُۥ قُدَّ مِن دُبُرٖ قَالَ إِنَّهُۥ مِن كَيۡدِكُنَّۖ إِنَّ كَيۡدَكُنَّ عَظِيمٞ ٢٨

يُوسُفُ أَعۡرِضۡ عَنۡ هَٰذَاۚ وَٱسۡتَغۡفِرِي لِذَنۢبِكِۖ إِنَّكِ كُنتِ مِنَ ٱلۡخَاطِـِٔينَ ٢٩

۞ وَقَالَ نِسۡوَةٞ فِي ٱلۡمَدِينَةِ ٱمۡرَأَتُ ٱلۡعَزِيزِ تُرَٰوِدُ فَتَىٰهَا عَن نَّفۡسِهِۦۖ قَدۡ شَغَفَهَا حُبًّاۖ

إِنَّا لَنَرَىٰهَا فِي ضَلَٰلٖ مُّبِينٖ ٣٠

ពួកយើងឃើញនាងស្ថិតក្នុងភាពវង្វេងយ៉ាងច្បាស់លាស់ ។

فَلَمَّا سَمِعَتۡ بِمَكۡرِهِنَّ أَرۡسَلَتۡ إِلَيۡهِنَّ
وَأَعۡتَدَتۡ لَهُنَّ مُتَّكَـٔٗا وَءَاتَتۡ كُلَّ وَٰحِدَةٖ مِّنۡهُنَّ
سِكِّينٗا وَقَالَتِ ٱخۡرُجۡ عَلَيۡهِنَّۖ فَلَمَّا رَأَيۡنَهُۥٓ
أَكۡبَرۡنَهُۥ وَقَطَّعۡنَ أَيۡدِيَهُنَّ وَقُلۡنَ حَٰشَ لِلَّهِ مَا
هَٰذَا بَشَرًا إِنۡ هَٰذَآ إِلَّا مَلَكٞ كَرِيمٞ ٣١

៣១-នៅពេលដែលនាងបានស្តាប់ឮពាក្យរិះគន់របស់ពួកគេ នាងក៏បានអញ្ជើញស្ត្រីទាំងនោះ និងបានរៀបចំសម្រាប់ពួកនាងនូវពិធីជប់លៀងមួយ ហើយបានផ្តល់កាំបិតឱ្យពួកនាងម្នាក់មួយគ្រប់ៗគ្នា(ដើម្បីចិតផ្លែឈើហូប) ហើយនាងបាននិយាយថា: ចូរឯង(យូសុហ្វ)ចេញទៅខាងមុខពួកនាង ។ នៅពេលដែលពួកនាងបានឃើញយូសុហ្វពួកនាងក៏ភ្ញាក់ផ្អើលនឹងគាត់(ដោយសារសម្រស់របស់គាត់) ហើយបានចិតដៃខ្លួនឯងព្រមទាំងនិយាយថា: អល់ឡោះមហាស្អាតស្អំ! នេះមិនមែនជាមនុស្សទេ! តាមពិតនេះជាម៉ាឡាអ៊ីកាត់ដ៏ឧត្តុង្គឧត្តម ។

قَالَتۡ فَذَٰلِكُنَّ ٱلَّذِي لُمۡتُنَّنِي فِيهِۖ وَلَقَدۡ
رَٰوَدتُّهُۥ عَن نَّفۡسِهِۦ فَٱسۡتَعۡصَمَۖ وَلَئِن لَّمۡ
يَفۡعَلۡ مَآ ءَامُرُهُۥ لَيُسۡجَنَنَّ وَلَيَكُونٗا مِّنَ
ٱلصَّٰغِرِينَ ٣٢

៣២-នាងបាននិយាយថា: គេនេះហើយដែលធ្វើឱ្យពួកអ្នកបន្ទោសខ្ញុំ ។ ហើយតាមពិតខ្ញុំចង់ប្រលោមទៅលើគេមែន តែគេបានបដិសេធ ។ ប្រសិនបើគេមិនធ្វើតាមអ្វីដែលខ្ញុំបញ្ជានោះទេ គេពិតជានឹងត្រូវឃុំឃាំង ហើយគេស្ថិតក្នុងចំណោមអ្នកដែលអាម៉ាស់ជាទីបំផុត ។

قَالَ رَبِّ ٱلسِّجۡنُ أَحَبُّ إِلَيَّ مِمَّا يَدۡعُونَنِيٓ
إِلَيۡهِۖ وَإِلَّا تَصۡرِفۡ عَنِّي كَيۡدَهُنَّ أَصۡبُ إِلَيۡهِنَّ
وَأَكُن مِّنَ ٱلۡجَٰهِلِينَ ٣٣

៣៣-យូសុហ្វបានពោលថា: ឱម្ចាស់របស់ខ្ញុំ! មន្ទីរឃុំឃាំងជាទីស្រឡាញ់របស់ខ្ញុំជាងអ្វីដែលពួកនាងបានលួងលោមខ្ញុំឱ្យទៅរកវា(អំពើទុច្ចរិត) ។ ប្រសិនបើទ្រង់មិនបញ្ចៀសឧបាយកលរបស់ពួកនាងអំពីខ្ញុំទេនោះ ខ្ញុំនឹងធ្លាក់ទៅក្នុងភាពរីករវររបស់ពួកនាង ហើយខ្ញុំនឹងស្ថិតនៅក្នុងចំណោមអ្នកដែលល្ងង់ខ្លៅជាមិនខាន ។

فَٱسۡتَجَابَ لَهُۥ رَبُّهُۥ فَصَرَفَ عَنۡهُ كَيۡدَهُنَّۚ
إِنَّهُۥ هُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ٣٤

៣៤-ពេលនោះម្ចាស់របស់គេបានទទួលយកការទទូចសុំរបស់គេ ហើយទ្រង់បានបញ្ចៀសឧបាយកលរបស់ពួកនាងឱ្យឆ្ងាយពីគេ ។ ពិតប្រាកដណាស់ ទ្រង់មហាឮ មហាដឹង ។

ثُمَّ بَدَا لَهُم مِّنۢ بَعۡدِ مَا رَأَوُاْ ٱلۡأٓيَٰتِ
لَيَسۡجُنُنَّهُۥ حَتَّىٰ حِينٖ ٣٥

៣៥-បន្ទាប់មកគំនិតផ្សេងក៏បានកើតឡើងចំពោះពួកគេ(អាហ្ស៊ីស និងមន្ត្រី) ក្រោយពីពួកគេបានឃើញភស្តុតាងនានា(ភាពស្អាតស្អំរបស់យូសុហ្វ) ពួកគេត្រូវតែឃុំឃាំងយូសុហ្វមួយរយៈកាលសិន ។

وَدَخَلَ مَعَهُ ٱلسِّجۡنَ فَتَيَانِۖ قَالَ أَحَدُهُمَآ
إِنِّيٓ أَرَىٰنِيٓ أَعۡصِرُ خَمۡرٗاۖ وَقَالَ ٱلۡأٓخَرُ إِنِّيٓ
أَرَىٰنِيٓ أَحۡمِلُ فَوۡقَ رَأۡسِي خُبۡزٗا تَأۡكُلُ ٱلطَّيۡرُ
مِنۡهُۖ نَبِّئۡنَا بِتَأۡوِيلِهِۦٓۖ إِنَّا نَرَىٰكَ مِنَ
ٱلۡمُحۡسِنِينَ ٣٦

៣៦-ហើយយុវជនពីរនាក់បានចូលទៅក្នុងមន្ទីរឃុំឃាំងជាមួយគេ(យូសុហ្វ)។ ម្នាក់ក្នុងចំណោមពួកគេទាំងពីរបាននិយាយថាៈ តាមពិតខ្ញុំសុបិនឃើញខ្ញុំកំពុងច្របាច់(ទំពាំងបាយជូរ)ធ្វើជាស្រា ហើយម្នាក់ទៀតបាននិយាយថាៈ តាមពិតខ្ញុំសុបិនឃើញខ្ញុំកំពុងទូលនំប៉័ងលើក្បាលរបស់ខ្ញុំដែលសត្វកំពុងចឹកនំប៉័ងនោះ។ សូមអ្នកប្រាប់ពួកយើងអំពីអត្ថន័យរបស់វាផងចុះ។ ពិតប្រាកដណាស់ ពួកយើងឃើញថាៈ អ្នកគឺជាមនុស្សល្អម្នាក់។

قَالَ لَا يَأۡتِيكُمَا طَعَامٞ تُرۡزَقَانِهِۦٓ إِلَّا نَبَّأۡتُكُمَا
بِتَأۡوِيلِهِۦ قَبۡلَ أَن يَأۡتِيَكُمَاۚ ذَٰلِكُمَا مِمَّا
عَلَّمَنِي رَبِّيٓۚ إِنِّي تَرَكۡتُ مِلَّةَ قَوۡمٖ لَّا يُؤۡمِنُونَ
بِٱللَّهِ وَهُم بِٱلۡأٓخِرَةِ هُمۡ كَٰفِرُونَ ٣٧

៣៧-យូសុហ្វបានឆ្លើយថាៈ មិនត្រឹមតែប៉ុណ្ណោះទេ សូម្បីតែម្ហូបអាហារដែលគេយកមកឱ្យអ្នកទាំងពីរក៏ខ្ញុំអាចប្រាប់ពីប្រភេទរបស់វាបានដែរមុននឹងវាមកដល់អ្នកទាំងពីរ។ នោះហើយជាអ្វីដែលម្ចាស់របស់ខ្ញុំបានបង្រៀនខ្ញុំ។ ពិតប្រាកដណាស់ ខ្ញុំបានចៀសឆ្ងាយពីសាសនារបស់ក្រុមដែលគ្មានជំនឿលើអល់ឡោះ ដោយពួកគេបដិសេធនឹងថ្ងៃបរលោក។

وَٱتَّبَعۡتُ مِلَّةَ ءَابَآءِيٓ إِبۡرَٰهِيمَ وَإِسۡحَٰقَ
وَيَعۡقُوبَۚ مَا كَانَ لَنَآ أَن نُّشۡرِكَ بِٱللَّهِ مِن
شَيۡءٖۚ ذَٰلِكَ مِن فَضۡلِ ٱللَّهِ عَلَيۡنَا وَعَلَى
ٱلنَّاسِ وَلَٰكِنَّ أَكۡثَرَ ٱلنَّاسِ لَا
يَشۡكُرُونَ ٣٨

៣៨-ហើយខ្ញុំបានអនុវត្តតាមសាសនាជីដូនជីតារបស់ខ្ញុំ គឺអ៊ីព្រហ៊ីម អ៊ីសហាកនិងយ៉ាក់កូប។ សម្រាប់ពួកយើង យើងមិនដែលធ្វើស្ហ៊ីរិកនឹងអល់ឡោះបន្តិចសោះឡើយ។ នោះជាការប្រោសប្រទានរបស់អល់ឡោះចំពោះពួកយើង និងចំពោះមនុស្សលោកទាំងអស់ ក៏ប៉ុន្តែមនុស្សលោកភាគច្រើនរមិលគុណ។

يَٰصَٰحِبَيِ ٱلسِّجۡنِ ءَأَرۡبَابٞ مُّتَفَرِّقُونَ
خَيۡرٌ أَمِ ٱللَّهُ ٱلۡوَٰحِدُ ٱلۡقَهَّارُ ٣٩

៣៩-(យូសុហ្វបានពោលថា) ឱមិត្តរួមមន្ទីរឃុំឃាំងទាំងពីររបស់ខ្ញុំ! តើម្ចាស់នានាគ្រប់ទីកន្លែងប្រសើរជាង ឬអល់ឡោះតែមួយគត់ដែលមានឥទ្ធិពលខ្លាំងក្លាប្រសើរជាង?

مَا تَعۡبُدُونَ مِن دُونِهِۦٓ إِلَّآ أَسۡمَآءٗ
سَمَّيۡتُمُوهَآ أَنتُمۡ وَءَابَآؤُكُم مَّآ أَنزَلَ ٱللَّهُ
بِهَا مِن سُلۡطَٰنٍۚ إِنِ ٱلۡحُكۡمُ إِلَّا لِلَّهِۚ أَمَرَ أَلَّا
تَعۡبُدُوٓاْ إِلَّآ إِيَّاهُۚ ذَٰلِكَ ٱلدِّينُ ٱلۡقَيِّمُ وَلَٰكِنَّ

៤០-អ្វីដែលពួកអ្នកកំពុងគោរពសក្ការៈផ្សេងពីទ្រង់នោះ គ្រាន់តែជាឈ្មោះដែលពួកអ្នក និងជីដូនជីតារបស់ពួកអ្នកបានដាក់ឱ្យវាប៉ុណ្ណោះ ដែលអល់ឡោះមិនបានបញ្ចុះភស្តុតាងណាមួយបញ្ជាក់អំពីវាឡើយ។ ការកាត់សេចក្តីនោះគ្មានអ្នកណាម្នាក់ក្រៅពីអល់ឡោះឡើយ។ ទ្រង់បានបញ្ជាមិនឱ្យពួកអ្នកគោរពសក្ការៈក្រៅពីទ្រង់ឡើយ។ នោះជាសាសនាដ៏ត្រឹមត្រូវតែមនុស្សលោក

أَكْثَرَ ٱلنَّاسِ لَا يَعْلَمُونَ ٤٠

ភាគច្រើនមិនដឹងឡើយ ។

يَٰصَٰحِبَيِ ٱلسِّجْنِ أَمَّآ أَحَدُكُمَا فَيَسْقِى رَبَّهُۥ خَمْرًا ۖ وَأَمَّا ٱلْءَاخَرُ فَيُصْلَبُ فَتَأْكُلُ ٱلطَّيْرُ مِن رَّأْسِهِۦ ۚ قُضِىَ ٱلْأَمْرُ ٱلَّذِى فِيهِ تَسْتَفْتِيَانِ ٤١

៤១-ឱមិត្តរួមមន្ទីរឃុំឃាំងទាំងពីររបស់ខ្ញុំ! រីឯម្នាក់នៃអ្នកទាំងពីរគឺនឹងចាក់ស្រាឱ្យចៅហ្វាយប្រុសរបស់គេ រីឯម្នាក់ទៀតត្រូវគេចងឆ្កាង ហើយមានសត្វមកចឹកស៊ីក្បាលរបស់គេ ។ រឿងរ៉ាវដែលត្រូវបានគេវិនិច្ឆ័យនេះ វាទាក់ទងទៅនឹងអ្វីដែលអ្នកទាំងពីរសួរ ។

وَقَالَ لِلَّذِى ظَنَّ أَنَّهُۥ نَاجٍ مِّنْهُمَا ٱذْكُرْنِى عِندَ رَبِّكَ فَأَنسَىٰهُ ٱلشَّيْطَٰنُ ذِكْرَ رَبِّهِۦ فَلَبِثَ فِى ٱلسِّجْنِ بِضْعَ سِنِينَ ٤٢

៤២-ហើយយូសុហ្វបានពោលទៅកាន់អ្នកដែលគាត់បានដឹងថាគេពិតជានឹងរួចផុតពីទោសម្នាក់ក្នុងចំណោមគេទាំងពីរថា: ចូរអ្នកជួយរំលឹកខ្ញុំឱ្យលោកម្ចាស់របស់អ្នកបានដឹងផង( ដើម្បីយកចេញពីមន្ទីរឃុំឃាំង) ប៉ុន្តែស្ហែតនបានធ្វើឱ្យគេភ្លេចពាក្យបណ្ដាំនេះទៅឱ្យលោកម្ចាស់របស់គេ ដូច្នេះគេ( យូសុហ្វ) ក៏បានស្ថិតនៅក្នុងមន្ទីរឃុំឃាំងនោះអស់រយៈពេលប៉ុន្មានឆ្នាំតទៅទៀត ។

وَقَالَ ٱلْمَلِكُ إِنِّىٓ أَرَىٰ سَبْعَ بَقَرَٰتٍ سِمَانٍ يَأْكُلُهُنَّ سَبْعٌ عِجَافٌ وَسَبْعَ سُنۢبُلَٰتٍ خُضْرٍ وَأُخَرَ يَابِسَٰتٍ ۖ يَٰٓأَيُّهَا ٱلْمَلَأُ أَفْتُونِى فِى رُءْيَٰىَ إِن كُنتُمْ لِلرُّءْيَا تَعْبُرُونَ ٤٣

៤៣-ហើយស្ដេចនោះបានមានបន្ទូលថា: ពិតប្រាកដណាស់យើងសុបិនឃើញគោញីធាត់ប្រាំពីរក្បាលត្រូវគោស្គមប្រាំពីរក្បាលស៊ីពួកវា ហើយឃើញស្រូវសាឡីស្រស់ប្រាំពីរកួរ និងប្រាំពីរកួរផ្សេងទៀតស្ងួត ។ ឱពួកលោកមន្ត្រី! ចូរពួកអ្នកពន្យល់អំពីសុបិនរបស់យើង ប្រសិនបើពួកអ្នកចេះកាត់សុបិន ។

قَالُوٓا۟ أَضْغَٰثُ أَحْلَٰمٍ ۖ وَمَا نَحْنُ بِتَأْوِيلِ ٱلْأَحْلَٰمِ بِعَٰلِمِينَ ٤٤

៤៤-ពួកគេបានឆ្លើយថា: សុបិនច្របូកច្របល់ទាំងនេះគ្មានអត្ថន័យអ្វីឡើយ ហើយពួកយើងពុំមែនជាអ្នកមានចំណេះដឹងអំពីការកាត់សុបិននេះឡើយ ។

وَقَالَ ٱلَّذِى نَجَا مِنْهُمَا وَٱدَّكَرَ بَعْدَ أُمَّةٍ أَنَا۠ أُنَبِّئُكُم بِتَأْوِيلِهِۦ فَأَرْسِلُونِ ٤٥

៤៥-ហើយអ្នកដែលបានរួចផុតពីទោសក្នុងចំណោមគេទាំងពីរបាននឹកឃើញ( យូសុហ្វ) បន្ទាប់ពីគេភ្លេចមួយរយៈកន្លងមកបាននិយាយថា: ខ្ញុំនឹងប្រាប់ពួកអ្នកអំពីអត្ថន័យរបស់វា ។ ដូច្នេះ សូមពួកអ្នកបញ្ជូនខ្ញុំទៅ( កាន់យូសុហ្វ) ។

يُوسُفُ أَيُّهَا ٱلصِّدِّيقُ أَفْتِنَا فِى سَبْعِ بَقَرَٰتٍ سِمَانٍ يَأْكُلُهُنَّ سَبْعٌ عِجَافٌ وَسَبْعِ

៤៦-យូសុហ្វ ឱអ្នកសច្ចៈអើយ! ចូរជួយពន្យល់យើងអំពីគោញីធាត់ប្រាំពីរក្បាលត្រូវគោស្គមប្រាំពីរក្បាលស៊ីពួកវា ហើយស្រូវសាឡីស្រស់ប្រាំពីរកួរ និងប្រាំពីរកួរផ្សេងទៀតស្ងួត ដើម្បីខ្ញុំត្រឡប់

سُنۢبُلَٰتٍ خُضۡرٖ وَأُخَرَ يَابِسَٰتٖ لَّعَلِّيٓ أَرۡجِعُ إِلَى ٱلنَّاسِ لَعَلَّهُمۡ يَعۡلَمُونَ ٤٦

ទៅកាន់ពួកគេវិញ សង្ឃឹមថាពួកគេនឹងដឹង(អត្ថន័យសុបិននេះ)។

قَالَ تَزۡرَعُونَ سَبۡعَ سِنِينَ دَأَبٗا فَمَا حَصَدتُّمۡ فَذَرُوهُ فِي سُنۢبُلِهِۦٓ إِلَّا قَلِيلٗا مِّمَّا تَأۡكُلُونَ ٤٧

៤៧-យូសុហ្វបានពោលថាៈ អ្នកទាំងអស់គ្នានាំគ្នាដាំដំណាំប្រាំពីរឆ្នាំជាប់ៗគ្នា ហើយអ្វីដែលពួកអ្នកបានច្រូត ចូរពួកអ្នករក្សាទុកវាទាំងកួររបស់វា លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះអំពីអ្វីដែលពួកអ្នកចង់បរិភោគ។

ثُمَّ يَأۡتِي مِنۢ بَعۡدِ ذَٰلِكَ سَبۡعٞ شِدَادٞ يَأۡكُلۡنَ مَا قَدَّمۡتُمۡ لَهُنَّ إِلَّا قَلِيلٗا مِّمَّا تُحۡصِنُونَ ٤٨

៤៨-បន្ទាប់មក ភាពរាំងស្ងួតរយៈពេលប្រាំពីរឆ្នាំនឹងមកដល់ក្រោយពីនោះ(ការប្រមូលផលប្រាំពីរឆ្នាំរួច) ដែលវានឹងបរិភោគអស់នូវអ្វីដែលពួកអ្នកបានសន្សំទុកពីមុនសម្រាប់រយៈពេលប្រាំពីរឆ្នាំ(ដែលរាំងស្ងួត) លើកលែងតែបន្តិចបន្តួចនូវអ្វីដែលពួកអ្នករក្សាទុក។

ثُمَّ يَأۡتِي مِنۢ بَعۡدِ ذَٰلِكَ عَامٞ فِيهِ يُغَاثُ ٱلنَّاسُ وَفِيهِ يَعۡصِرُونَ ٤٩

៤៩-បន្ទាប់មក មានមួយឆ្នាំនឹងមកដល់ក្រោយពីនោះ ដែលក្នុងឆ្នាំនោះគេបញ្ចុះទឹកភ្លៀងឱ្យមនុស្សលោកបានគ្រប់គ្រាន់ ហើយនៅក្នុងឆ្នាំនោះដែរពួកគេនឹងផលិត(ស្រានិងប្រេង...)។

وَقَالَ ٱلۡمَلِكُ ٱئۡتُونِي بِهِۦۖ فَلَمَّا جَآءَهُ ٱلرَّسُولُ قَالَ ٱرۡجِعۡ إِلَىٰ رَبِّكَ فَسۡـَٔلۡهُ مَا بَالُ ٱلنِّسۡوَةِ ٱلَّٰتِي قَطَّعۡنَ أَيۡدِيَهُنَّۚ إِنَّ رَبِّي بِكَيۡدِهِنَّ عَلِيمٞ ٥٠

៥០-ហើយស្តេចនោះបានមានបន្ទូលថាៈ ចូរពួកអ្នកនាំយូសុហ្វមកឱ្យយើង។ ហើយនៅពេលដែលអ្នកនាំសារបានមកដល់យូសុហ្វ យូសុហ្វបានពោលថាៈ ចូរអ្នកត្រឡប់ទៅកាន់លោកម្ចាស់របស់អ្នកវិញ ហើយសួរគាត់អំពីមូលហេតុដែលស្ត្រីៗបានចិតដៃខ្លួនឯងនោះ។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំ(អល់ឡោះ)ដឹងច្បាស់អំពីឧបាយកលរបស់ពួកនាង។

قَالَ مَا خَطۡبُكُنَّ إِذۡ رَٰوَدتُّنَّ يُوسُفَ عَن نَّفۡسِهِۦۚ قُلۡنَ حَٰشَ لِلَّهِ مَا عَلِمۡنَا عَلَيۡهِ مِن سُوٓءٖۚ قَالَتِ ٱمۡرَأَتُ ٱلۡعَزِيزِ ٱلۡـَٰٔنَ حَصۡحَصَ ٱلۡحَقُّ أَنَا۠ رَٰوَدتُّهُۥ عَن نَّفۡسِهِۦ وَإِنَّهُۥ لَمِنَ ٱلصَّٰدِقِينَ ٥١

៥១-ស្តេចបានមានបន្ទូល(ទៅកាន់ពួកនាង)ថាៈ តើមានអ្វីកើតឡើងនៅពេលដែលពួកអ្នកលួងលោមយូសុហ្វចង់បានខ្លួនគេនោះ? ពួកនាងបានឆ្លើយថាៈ អល់ឡោះមហាស្អាតស្អំ! យើងខ្ញុំមិនធ្លាប់ដឹងពីភាពអាស្រូវរបស់គេឡើយ។ ភរិយារបស់អាហ្ស៊ីសបានឆ្លើយថាៈ ពេលនេះការពិតបានលាតត្រដាងអស់ហើយ គឺខ្ញុំទេដែលបានលួងលោមចង់បានខ្លួនគេ។ ហើយពិតប្រាកដណាស់ គេពិតជាស្ថិតក្នុងចំណោមអ្នកដែលត្រឹមត្រូវ។

ذَٰلِكَ لِيَعۡلَمَ أَنِّي لَمۡ أَخُنۡهُ بِٱلۡغَيۡبِ وَأَنَّ ٱللَّهَ لَا يَهۡدِي كَيۡدَ ٱلۡخَآئِنِينَ ﴿٥٢﴾

៥២-(បន្ទាប់មកយូសុហ្វបានពោលថា) នោះគឺដើម្បីឱ្យគាត់ (អាហ្សីស)ដឹងថា ពិតប្រាកដណាស់ ខ្ញុំមិនបានក្បត់គាត់នៅពេលដែលគាត់មិននៅនោះទេ។ ហើយពិតប្រាដកណាស់ អល់ឡោះមិនបង្ហាញផ្លូវចំពោះឧបាយកលរបស់ពួកក្បត់ឡើយ។

۞ وَمَآ أُبَرِّئُ نَفۡسِيٓۚ إِنَّ ٱلنَّفۡسَ لَأَمَّارَةُۢ بِٱلسُّوٓءِ إِلَّا مَا رَحِمَ رَبِّيٓۚ إِنَّ رَبِّي غَفُورٞ رَّحِيمٞ ﴿٥٣﴾

៥៣-ហើយខ្ញុំ(ភរិយាអាហ្សីស)មិនបដិសេធកំហុសខ្លួនឯងឡើយ។ តាមពិតតណ្ហាទេដែលអូសទាញទៅរកប្រការដែលអាក្រក់ លើកលែងតែអ្នកណាដែលម្ចាស់របស់ខ្ញុំបានអាណិតស្រឡាញ់ប៉ុណ្ណោះ។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំមហាអភ័យទោស មហាអាណិតស្រឡាញ់។

وَقَالَ ٱلۡمَلِكُ ٱئۡتُونِي بِهِۦٓ أَسۡتَخۡلِصۡهُ لِنَفۡسِيۖ فَلَمَّا كَلَّمَهُۥ قَالَ إِنَّكَ ٱلۡيَوۡمَ لَدَيۡنَا مَكِينٌ أَمِينٞ ﴿٥٤﴾

៥៤-ហើយស្តេចមានបន្ទូលថា: ចូរពួកអ្នកនាំគេមកជួបយើង ដើម្បីយើងយកគេធ្វើជាមនុស្សជំនិតរបស់យើង។ នៅពេលដែលស្តេចមានបន្ទូលជាមួយយូសុហ្វ រួចក៏មានបន្ទូលថា: ពិតប្រាកដណាស់ អ្នកឯងពីថ្ងៃនេះតទៅគឺជាអ្នកដែលមានបុណ្យសក្តិខ្ពង់ខ្ពស់ គួរជាទីទុកចិត្តសម្រាប់យើង។

قَالَ ٱجۡعَلۡنِي عَلَىٰ خَزَآئِنِ ٱلۡأَرۡضِۖ إِنِّي حَفِيظٌ عَلِيمٞ ﴿٥٥﴾

៥៥-យូសុហ្វបានពោលថា: ចូរអ្នកតែងតាំងខ្ញុំឱ្យគ្រប់គ្រងឃ្លាំងទូទាំងនគរនេះ(ជារដ្ឋមន្ត្រីហិរញ្ញវត្ថុប្រទេសអេហ្ស៊ីប)។ ពិតប្រាកដណាស់ខ្ញុំជាអ្នកគ្រប់គ្រងថែរក្សាវាប្រកបដោយចំណេះចេះដឹងខ្ពស់។

وَكَذَٰلِكَ مَكَّنَّا لِيُوسُفَ فِي ٱلۡأَرۡضِ يَتَبَوَّأُ مِنۡهَا حَيۡثُ يَشَآءُۚ نُصِيبُ بِرَحۡمَتِنَا مَن نَّشَآءُۖ وَلَا نُضِيعُ أَجۡرَ ٱلۡمُحۡسِنِينَ ﴿٥٦﴾

៥៦-ដូចច្នោះហើយទើបយើងបានប្រទានអំណាចឱ្យយូសុហ្វនៅលើផែនដី ដើម្បីឱ្យគេមានសិទ្ធិអំណាចគ្រប់គ្រងនៅកន្លែងណាដែលគេប្រាថ្នា។ យើងផ្តល់ការអាណិតស្រឡាញ់សម្រាប់អ្នកណាដែលយើងមានចេតនា ហើយយើងមិនបំបាត់ផលបុណ្យរបស់បណ្តាអ្នកដែលធ្វើល្អឡើយ។

وَلَأَجۡرُ ٱلۡأٓخِرَةِ خَيۡرٞ لِّلَّذِينَ ءَامَنُواْ وَكَانُواْ يَتَّقُونَ ﴿٥٧﴾

៥៧-ហើយពិតប្រាកដណាស់ ផលបុណ្យនៅថ្ងៃបរលោកគឺល្អប្រសើរសម្រាប់បណ្តាអ្នកដែលមានជំនឿ និងធ្លាប់បានកោតខ្លាចអល់ឡោះ។

وَجَآءَ إِخۡوَةُ يُوسُفَ فَدَخَلُواْ عَلَيۡهِ فَعَرَفَهُمۡ وَهُمۡ لَهُۥ مُنكِرُونَ ﴿٥٨﴾

៥៨-ហើយបងប្អូនរបស់យូសុហ្វបានមកដល់ រួចក៏បានចូលទៅជួបគេ ពេលនោះយូសុហ្វបានស្គាល់ពួកគេទាំងអស់ តែពួកគេមិនបានស្គាល់យូសុហ្វឡើយ។

وَلَمَّا جَهَّزَهُم بِجَهَازِهِمْ قَالَ ٱئْتُونِى بِأَخٍ لَّكُم مِّنْ أَبِيكُمْ ۚ أَلَا تَرَوْنَ أَنِّىٓ أُوفِى ٱلْكَيْلَ وَأَنَا۠ خَيْرُ ٱلْمُنزِلِينَ ﴿٥٩﴾

៥៩-ហើយនៅពេលដែលគេ(យូសុហ្វ)បានរៀបចំរបស់របរផ្តល់ឱ្យពួកគេរួច យូសុហ្វក៏បានពោលថាៈ ចូរពួកអ្នកនាំប្អូនប្រុសរបស់ពួកអ្នក(ពុនយ៉ាមីន)ពីឪពុករបស់ពួកអ្នកមកឱ្យខ្ញុំ។ តើពួកអ្នកមិនឃើញទេថា យើងពិតជាបានវាល់(ឱ្យពួកអ្នក)គ្រប់ចំនួន ហើយយើងជាអ្នកទទួលភ្ញៀវដែលល្អជាងគេទេឬ?

فَإِن لَّمْ تَأْتُونِى بِهِۦ فَلَا كَيْلَ لَكُمْ عِندِى وَلَا تَقْرَبُونِ ﴿٦٠﴾

៦០-តែប្រសិនបើពួកអ្នកមិននាំគេមកជួបយើងទេនោះ គឺខ្ញុំគ្មានការវាល់(ដោះដូរស្បៀង)សម្រាប់ពួកអ្នកទៀតឡើយ ហើយពួកអ្នកកុំមករកយើងទៀតឱ្យសោះ។

قَالُوا۟ سَنُرَٰوِدُ عَنْهُ أَبَاهُ وَإِنَّا لَفَٰعِلُونَ ﴿٦١﴾

៦១-ពួកគេបាននិយាយថាៈ ពួកយើងនឹងព្យាយាមសុំពីឪពុករបស់គេ ឱ្យគេ(មកជាមួយពួកយើង) ហើយពួកយើងពិតជាធ្វើបាន។

وَقَالَ لِفِتْيَٰنِهِ ٱجْعَلُوا۟ بِضَٰعَتَهُمْ فِى رِحَالِهِمْ لَعَلَّهُمْ يَعْرِفُونَهَآ إِذَا ٱنقَلَبُوٓا۟ إِلَىٰٓ أَهْلِهِمْ لَعَلَّهُمْ يَرْجِعُونَ ﴿٦٢﴾

៦២-ហើយគេ(យូសុហ្វ)បានពោលទៅកាន់ពួកអ្នកបម្រើរបស់គេថាៈ ចូរពួកអ្នកដាក់លុយកាក់របស់ពួកគេទៅក្នុងក្បួនដំណើររបស់ពួកគេវិញ(ដោយសម្ងាត់) សង្ឃឹមថាពួកគេអាចដឹងវាពេលពួកគេត្រឡប់ទៅជួបក្រុមគ្រួសាររបស់ពួកគេវិញ សង្ឃឹមថាពួកគេអាចត្រឡប់មកវិញទៀត។

فَلَمَّا رَجَعُوٓا۟ إِلَىٰٓ أَبِيهِمْ قَالُوا۟ يَٰٓأَبَانَا مُنِعَ مِنَّا ٱلْكَيْلُ فَأَرْسِلْ مَعَنَآ أَخَانَا نَكْتَلْ وَإِنَّا لَهُۥ لَحَٰفِظُونَ ﴿٦٣﴾

៦៣-នៅពេលដែលពួកគេបានត្រឡប់ទៅជួបឪពុករបស់ពួកគេវិញ ពួកគេក៏និយាយថាៈ ឱឪពុករបស់យើង! ការវាល់(ដោះដូរស្បៀង)ត្រូវបានគេហាមឃាត់ពីពួកយើង ដូច្នេះសូមលោកឪពុកមេត្តាបញ្ជូនប្អូនរបស់ពួកយើងទៅជាមួយយើងផង ពួកយើងនឹងទទួលបានការវាល់(ដោះដូរស្បៀង)ជាមិនខាន។ ហើយពួកយើងពិតជានឹងថែរក្សាគេឱ្យបានល្អ។

قَالَ هَلْ ءَامَنُكُمْ عَلَيْهِ إِلَّا كَمَآ أَمِنتُكُمْ عَلَىٰٓ أَخِيهِ مِن قَبْلُ ۖ فَٱللَّهُ خَيْرٌ حَٰفِظًا ۖ وَهُوَ أَرْحَمُ ٱلرَّٰحِمِينَ ﴿٦٤﴾

៦៤-គាត់(យ៉ាក់កូប)បានតបថាៈ តើឱ្យយើងទុកចិត្តពួកឯងចំពោះគេ(ពុនយ៉ាមីន)ដូចដែលយើងបានទុកចិត្តពួកឯងចំពោះបងរបស់គេ(យូសុហ្វ)ពីមុនឬ? ប៉ុន្តែអល់ឡោះជាអ្នកថែរក្សាដ៏ប្រសើរបំផុត។ ហើយទ្រង់ជាអ្នកអាណិតស្រឡាញ់ជាងគេបំផុត។

وَلَمَّا فَتَحُوا۟ مَتَٰعَهُمْ وَجَدُوا۟ بِضَٰعَتَهُمْ

៦៥-ហើយនៅពេលដែលពួកគេបានបើកមើលទំនិញរបស់ពួកគេ ពួកគេក៏បានប្រទះឃើញលុយកាក់របស់ពួកគេដែលត្រូវបានគេ

رُدَّتْ إِلَيْهِمْ ۖ قَالُوا۟ يَـٰٓأَبَانَا مَا نَبْغِى ۖ
هَـٰذِهِۦ بِضَـٰعَتُنَا رُدَّتْ إِلَيْنَا ۖ وَنَمِيرُ أَهْلَنَا
وَنَحْفَظُ أَخَانَا وَنَزْدَادُ كَيْلَ بَعِيرٍ ۖ ذَٰلِكَ
كَيْلٌ يَسِيرٌ ٦٥

បង្វិលមកឱ្យពួកគេវិញ ពួកគេបាននិយាយថាៈ ឱឪពុករបស់ពួកយើង! តើពួកយើងចង់បានអ្វីទៀត? នេះជាលុយកាក់របស់ពួកយើងដែលត្រូវបានគេបង្វិលមកឱ្យពួកយើងវិញ ។ ហើយពួកយើងអាចផ្គត់ផ្គង់ម្ហូបដល់គ្រួសាររបស់ពួកយើង និងអាចថែរក្សាបងប្អូនរបស់ពួកយើង ហើយនិងអាចបន្ថែមការវាល់( ដោះដូរស្បៀង) មួយបន្ទុកសត្វអូដ្ឋទៀត ។ នោះជាការវាល់( ដោះដូរស្បៀង) ដ៏ងាយស្រួល ។

قَالَ لَنْ أُرْسِلَهُۥ مَعَكُمْ حَتَّىٰ تُؤْتُونِ مَوْثِقًا
مِّنَ ٱللَّهِ لَتَأْتُنَّنِى بِهِۦٓ إِلَّآ أَن يُحَاطَ بِكُمْ ۖ
فَلَمَّآ ءَاتَوْهُ مَوْثِقَهُمْ قَالَ ٱللَّهُ عَلَىٰ مَا نَقُولُ
وَكِيلٌ ٦٦

៦៦-យ៉ាក់កូបបានពោលថាៈ យើងមិនអាចបញ្ជូនគេទៅជាមួយពួកអ្នកបានឡើយ លុះត្រាតែពួកអ្នកធ្វើកិច្ចសន្យាជាមួយយើងដោយស្បថនឹងអល់ឡោះថាៈ ពួកអ្នកពិតជានឹងនាំគេត្រឡប់មកជួបយើងវិញ លើកលែងតែពួកអ្នកត្រូវឡោមព័ទ្ធ( ដោយពួកសត្រូវ) ប៉ុណ្ណោះ ។ ហើយនៅពេលដែលពួកគេបានធ្វើកិច្ចសន្យាជាមួយគាត់ គាត់ក៏ពោលថាៈ អល់ឡោះជាអ្នកធ្វើសាក្សីចំពោះអ្វីដែលពួកយើងនិយាយ ។

وَقَالَ يَـٰبَنِىَّ لَا تَدْخُلُوا۟ مِنۢ بَابٍ وَٰحِدٍ
وَٱدْخُلُوا۟ مِنْ أَبْوَٰبٍ مُّتَفَرِّقَةٍ ۖ وَمَآ أُغْنِى عَنكُم
مِّنَ ٱللَّهِ مِن شَىْءٍ ۖ إِنِ ٱلْحُكْمُ إِلَّا لِلَّهِ ۖ عَلَيْهِ
تَوَكَّلْتُ ۖ وَعَلَيْهِ فَلْيَتَوَكَّلِ ٱلْمُتَوَكِّلُونَ ٦٧

៦៧-ហើយយ៉ាក់កូបបានពោលថាៈ ឱកូនទាំងឡាយរបស់ខ្ញុំ! ចូរពួកអ្នកកុំចូលតាមទ្វារតែមួយ តែពួកអ្នកត្រូវចូលតាមច្រកទ្វារផ្សេងៗគ្នា ហើយយើងមិនអាចជួយឱ្យពួកអ្នករួចផុតពីការកំណត់របស់អល់ឡោះបានឡើយ សូម្បីតែបន្តិចក៏ដោយ ។ គ្មានទេការកំណត់នោះ លើកលែងតែជាកម្មសិទ្ធិរបស់អល់ឡោះតែមួយគត់ ។ ចំពោះទ្រង់ដែលខ្ញុំបានប្រគល់ការទុកចិត្ត ។ ហើយបណ្តាអ្នកដែលទុកចិត្តត្រូវតែប្រគល់ការទុកចិត្តចំពោះទ្រង់ ។

وَلَمَّا دَخَلُوا۟ مِنْ حَيْثُ أَمَرَهُمْ أَبُوهُم مَّا
كَانَ يُغْنِى عَنْهُم مِّنَ ٱللَّهِ مِن شَىْءٍ إِلَّا
حَاجَةً فِى نَفْسِ يَعْقُوبَ قَضَىٰهَا ۚ وَإِنَّهُۥ لَذُو
عِلْمٍ لِّمَا عَلَّمْنَـٰهُ وَلَـٰكِنَّ أَكْثَرَ ٱلنَّاسِ لَا
يَعْلَمُونَ ٦٨

៦៨-ហើយនៅពេលដែលពួកគេបានចូលដោយធ្វើតាមអ្វីដែលឪពុករបស់ពួកគេបានណែនាំនោះ វាមិនអាចធ្វើឱ្យពួកគេរួចផុតពីការកំណត់របស់អល់ឡោះបន្តិចឡើយ តែនេះគ្រាន់តែជាតម្រូវការដែលមាននៅក្នុងចិត្តរបស់យ៉ាក់កូបដែលចង់បំពេញវាប៉ុណ្ណោះ ។ ហើយពិតប្រាកដណាស់ យ៉ាក់កូបមានចំណេះដឹងខ្ពស់ ដោយសារតែអ្វីដែលយើងបានបង្រៀនគេ ក៏ប៉ុន្តែមនុស្សលោកភាគច្រើនមិនដឹងឡើយ ។

وَلَمَّا دَخَلُوا۟ عَلَىٰ يُوسُفَ ءَاوَىٰٓ إِلَيْهِ أَخَاهُ ۖ

៦៩-ហើយនៅពេលដែលពួកគេបានចូលទៅដល់យូសុហ្វ គាត់ក៏ទៅអោបប្អូនប្រុសរបស់គាត់ដោយពោលថាៈ តាមពិតខ្ញុំជាបង

قَالَ إِنِّيٓ أَنَا۠ أَخُوكَ فَلَا تَبۡتَئِسۡ بِمَا كَانُواْ يَعۡمَلُونَ ٦٩

របស់អ្នក ហេតុនេះសូមអ្នកកុំព្រួយបារម្ភនូវអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តឱ្យសោះ ។

فَلَمَّا جَهَّزَهُم بِجَهَازِهِمۡ جَعَلَ ٱلسِّقَايَةَ فِي رَحۡلِ أَخِيهِ ثُمَّ أَذَّنَ مُؤَذِّنٌ أَيَّتُهَا ٱلۡعِيرُ إِنَّكُمۡ لَسَٰرِقُونَ ٧٠

៧០-ហើយនៅពេលដែលគាត់(យូសុហ្វ)បានរៀបចំទុកដាក់ស្បៀងដែលជាតម្រូវការរបស់ពួកគេនោះ គាត់ក៏បានដាក់ផ្តិលមាសទៅក្នុងថង់ប្អូនរបស់គាត់ ។ បន្ទាប់មកមានម្នាក់បានស្រែកថាៈ ឱពួកអ្នកធ្វើដំណើរ! ពិតប្រាកដណាស់ ពួកអ្នកជាអ្នកលួច ។

قَالُواْ وَأَقۡبَلُواْ عَلَيۡهِم مَّاذَا تَفۡقِدُونَ ٧١

៧១-ពួកគេ(ពួកអ្នកធ្វើដំណើរ)បានសួរដោយដើរឆ្ពោះទៅកាន់មន្ត្រីទាំងនោះថាៈ តើពួកអ្នកបាត់អ្វី?

قَالُواْ نَفۡقِدُ صُوَاعَ ٱلۡمَلِكِ وَلِمَن جَآءَ بِهِۦ حِمۡلُ بَعِيرٖ وَأَنَا۠ بِهِۦ زَعِيمٞ ٧٢

៧២-ពួកគេ(មន្ត្រី)បានតបវិញថាៈ ពួកយើងបាត់ផ្តិលមាសរបស់ស្តេច ហើយសម្រាប់អ្នកណាដែលរកឃើញវា គឺយើងជាអ្នកធានាឱ្យរង្វាន់ដល់គេមួយបន្ទុកសត្វអូដ្ឋ ។

قَالُواْ تَٱللَّهِ لَقَدۡ عَلِمۡتُم مَّا جِئۡنَا لِنُفۡسِدَ فِي ٱلۡأَرۡضِ وَمَا كُنَّا سَٰرِقِينَ ٧٣

៧៣-ពួកគេ(ពួកអ្នកធ្វើដំណើរ)បានឆ្លើយថាៈ យើងសូមស្បថនឹងអល់ឡោះ! តាមពិតអ្នកទាំងអស់គ្នាដឹងហើយថា យើងមិនមែនមកដើម្បីបង្កបញ្ហានៅលើទឹកដីនេះទេ ហើយពួកយើងក៏មិនមែនជាចោរដែរ ។

قَالُواْ فَمَا جَزَٰٓؤُهُۥٓ إِن كُنتُمۡ كَٰذِبِينَ ٧٤

៧៤-ពួកគេ(មន្ត្រី)បានសួរវិញថាៈ តើការពិន័យរបស់គេយ៉ាងដូចម្តេចដែរ បើពួកអ្នកជាអ្នកភូតកុហកវិញនោះ ?

قَالُواْ جَزَٰٓؤُهُۥ مَن وُجِدَ فِي رَحۡلِهِۦ فَهُوَ جَزَٰٓؤُهُۥۚ كَذَٰلِكَ نَجۡزِي ٱلظَّٰلِمِينَ ٧٥

៧៥-ពួកគេ(បងប្អូនរបស់យូសុហ្វ)បានឆ្លើយថាៈ ការពិន័យរបស់គេគឺចំពោះអ្នកណាដែលត្រូវបានគេរកឃើញ(ផ្តិលមាស)នៅក្នុងថង់របស់គេ នោះហើយជាការពិន័យរបស់គេ ។ ដូច្នោះហើយ យើងនឹងពិន័យ(ដាក់ទណ្ឌកម្ម)ចំពោះពួកដែលធ្វើខុស ។

فَبَدَأَ بِأَوۡعِيَتِهِمۡ قَبۡلَ وِعَآءِ أَخِيهِ ثُمَّ ٱسۡتَخۡرَجَهَا مِن وِعَآءِ أَخِيهِۚ كَذَٰلِكَ كِدۡنَا لِيُوسُفَۖ مَا كَانَ لِيَأۡخُذَ أَخَاهُ فِي دِينِ ٱلۡمَلِكِ إِلَّآ أَن يَشَآءَ ٱللَّهُۚ نَرۡفَعُ دَرَجَٰتٖ مَّن نَّشَآءُۗ

៧៦-ហើយ(យូសុហ្វ)បានចាប់ផ្តើមឆែកឆេរគ្រប់ថង់របស់ពួកគេ មុននឹងឆែកថង់ប្អូនប្រុសរបស់គេ ។ បន្ទាប់មកគាត់ក៏បានយកវា(ផ្តិលមាស)ចេញពីថង់ប្អូនប្រុសរបស់គាត់ ។ នោះហើយជាផែនការដែលយើង(អល់ឡោះ)បានរៀបចំសម្រាប់យូសុហ្វ ។ តាមពិតគេមិនអាចយកប្អូនប្រុសរបស់គេដោយអនុវត្តតាមច្បាប់របស់ព្រះរាជាបានឡើយ លើកលែងតែអល់ឡោះមានចេតនា

وَفَوۡقَ كُلِّ ذِي عِلۡمٍ عَلِيمٞ ٧٦

ប៉ុណ្ណោះ។ យើងលើកកម្ពស់ឋានៈចំពោះអ្នកណាដែលយើងមានចេតនា ហើយរាល់អ្នកដែលមានចំណេះដឹងគឺមានអ្នកចេះដឹងខ្ពស់ជាងទៅទៀត(អល់ឡោះ)។

۞قَالُوٓاْ إِن يَسۡرِقۡ فَقَدۡ سَرَقَ أَخٞ لَّهُۥ مِن قَبۡلُۚ
فَأَسَرَّهَا يُوسُفُ فِي نَفۡسِهِۦ وَلَمۡ يُبۡدِهَا لَهُمۡۚ
قَالَ أَنتُمۡ شَرّٞ مَّكَانٗاۖ وَٱللَّهُ أَعۡلَمُ بِمَا
تَصِفُونَ ٧٧

៧៧-ពួកគេ(បងប្អូនយូសុហ្វ)បាននិយាយថាៈ ប្រសិនបើគេ(ពុនយ៉ាមីន)បានលួច ប្រាកដជាបងរបស់គេធ្លាប់លួចពីមុនមក។ ហើយយូសុហ្វបានលាក់ទុករឿងនេះក្នុងខ្លួនរបស់គាត់ ដោយគាត់មិនបានបង្ហាញវាប្រាប់ពួកគេឡើយ។ ហើយគាត់(យូសុហ្វ)បាននិយាយក្នុងចិត្តថាៈ ពួកអ្នកពិតជាអាក្រក់ឫកមែន ហើយអល់ឡោះដឹងបំផុតនូវអ្វីដែលពួកអ្នកនៅរ៉ាយរ៉ាប់។

قَالُواْ يَٰٓأَيُّهَا ٱلۡعَزِيزُ إِنَّ لَهُۥٓ أَبٗا شَيۡخٗا كَبِيرٗا
فَخُذۡ أَحَدَنَا مَكَانَهُۥٓۖ إِنَّا نَرَىٰكَ مِنَ
ٱلۡمُحۡسِنِينَ ٧٨

៧៨-ពួកគេបាននិយាយថាៈ ឱលោកម្ចាស់(យូសុហ្វ)! តាមពិតគេមានឪពុកចាស់ជរាម្នាក់(ដែលព្រួយបារម្ភចំពោះគេ) ដូច្នេះសូមអ្នកយកនរណាម្នាក់ពីពួកយើងជំនួសគេចុះ។ ពិតប្រាកដណាស់ ពួកយើងយល់ឃើញថា អ្នកស្ថិតក្នុងចំណោមអ្នកដែលធ្វើល្អ។

قَالَ مَعَاذَ ٱللَّهِ أَن نَّأۡخُذَ إِلَّا مَن وَجَدۡنَا
مَتَٰعَنَا عِندَهُۥٓ إِنَّآ إِذٗا لَّظَٰلِمُونَ ٧٩

៧៩-យូសុហ្វបានពោលថាៈ សូមអល់ឡោះបញ្ចៀសពួកយើងកុំឱ្យឃាត់ខ្លួនអ្នកណាម្នាក់ឡើយ លើកលែងតែអ្នកណាដែលពួកយើងបានប្រទះឃើញឥវ៉ាន់របស់ពួកយើងនៅជាមួយគេប៉ុណ្ណោះ។ ពិតប្រាកដណាស់ បើពួកយើងបានធ្វើដូច្នោះ ពួកយើងគឺជាអ្នកដែលបំពានជាមិនខាន។

فَلَمَّا ٱسۡتَيۡـَٔسُواْ مِنۡهُ خَلَصُواْ نَجِيّٗاۖ قَالَ
كَبِيرُهُمۡ أَلَمۡ تَعۡلَمُوٓاْ أَنَّ أَبَاكُمۡ قَدۡ أَخَذَ
عَلَيۡكُم مَّوۡثِقٗا مِّنَ ٱللَّهِ وَمِن قَبۡلُ مَا فَرَّطتُمۡ فِي
يُوسُفَۖ فَلَنۡ أَبۡرَحَ ٱلۡأَرۡضَ حَتَّىٰ يَأۡذَنَ لِيٓ أَبِيٓ
أَوۡ يَحۡكُمَ ٱللَّهُ لِيۖ وَهُوَ خَيۡرُ ٱلۡحَٰكِمِينَ ٨٠

៨០-ដូច្នោះ នៅពេលពួកគេបានអស់សង្ឃឹមចំពោះគេ(យូសុហ្វ) ពួកគេក៏បានទៅពិភាក្សាដោយស្ងាត់ស្ងៀម។ បងរបស់ពួកគេបានពោលថាៈ តើពួកឯងមិនបានដឹងទេឬ? តាមពិតឪពុករបស់ពួកឯងបានឱ្យពួកឯងធ្វើកិច្ចសន្យា(ស្បថ)ចំពោះអល់ឡោះ ហើយកាលពីមុនពួកឯងបានធ្វើឱ្យបាត់យូសុហ្វ ដូច្នោះហើយខ្ញុំនឹងមិនចាកចេញពីទឹកដីនេះឡើយ ទាល់តែឪពុករបស់ខ្ញុំអនុញ្ញាតឱ្យខ្ញុំ ឬអល់ឡោះកាត់សេចក្ដីឱ្យខ្ញុំ ហើយទ្រង់ជាអ្នកកាត់សេចក្ដីដ៏ល្អប្រសើរបំផុត។

ٱرۡجِعُوٓاْ إِلَىٰٓ أَبِيكُمۡ فَقُولُواْ يَٰٓأَبَانَآ إِنَّ
ٱبۡنَكَ سَرَقَ وَمَا شَهِدۡنَآ إِلَّا بِمَا عَلِمۡنَا وَمَا

៨១-(បងគេបង្អស់បាននិយាយថា) ចូរពួកឯងត្រឡប់ទៅកាន់ឪពុករបស់ពួកឯងវិញចុះ ហើយចូរពួកឯងប្រាប់ថាៈ ឱលោកឪពុករបស់ពួកយើង! ពិតប្រាកដណាស់ កូន(ពុនយ៉ាមីន)របស់ឪពុកបាន

كُنَّا لِلۡغَيۡبِ حَٰفِظِينَ ﴿٨١﴾

លួចរបស់គេ ហើយពួកយើងមិនអាចធ្វើសាក្សីបានឡើយ លើកលែងតែអ្វីដែលយើងបានដឹង ហើយពួកយើងមិនអាចការពារនូវអ្វីដែលអាថ៌កំបាំងបានឡើយ ។

وَسۡـَٔلِ ٱلۡقَرۡيَةَ ٱلَّتِي كُنَّا فِيهَا وَٱلۡعِيرَ ٱلَّتِيٓ أَقۡبَلۡنَا فِيهَاۖ وَإِنَّا لَصَٰدِقُونَ ﴿٨٢﴾

៨២-ហើយសូមឪពុកសួរអ្នកស្រុកដែលពួកយើងបាននៅទីនោះ និងក្បួនអ្នកដំណើរដែលពួកយើងបានវិលត្រឡប់មកជាមួយគ្នា ហើយជាការពិតណាស់ ពួកយើងជាអ្នកនិយាយពិត ។

قَالَ بَلۡ سَوَّلَتۡ لَكُمۡ أَنفُسُكُمۡ أَمۡرٗاۖ فَصَبۡرٞ جَمِيلٌۖ عَسَى ٱللَّهُ أَن يَأۡتِيَنِي بِهِمۡ جَمِيعًاۚ إِنَّهُۥ هُوَ ٱلۡعَلِيمُ ٱلۡحَكِيمُ ﴿٨٣﴾

៨៣-គាត់(ឪពុក) បានពោលថា : ផ្ទុយទៅវិញ ពួកអ្នកទេដែលជាអ្នកប្រឌិតរឿងនេះឡើង ។ ដូចនេះការអត់ធ្មត់ វាជាការប្រសើរបំផុត(សម្រាប់ខ្ញុំ) ។ សង្ឃឹមថា អល់ឡោះនឹងនាំពួកគេទាំងអស់គ្នាមកជួបយើងវិញ ។ ពិតប្រាកដណាស់ ទ្រង់មហាដឹង មហាគតិបណ្ឌិត ។

وَتَوَلَّىٰ عَنۡهُمۡ وَقَالَ يَٰٓأَسَفَىٰ عَلَىٰ يُوسُفَ وَٱبۡيَضَّتۡ عَيۡنَاهُ مِنَ ٱلۡحُزۡنِ فَهُوَ كَظِيمٞ ﴿٨٤﴾

៨៤-ហើយគាត់(ឪពុក) បានបែរចេញពីពួកគេ ដោយគាត់បានពោលថា: គួរឱ្យអាណោចអាធ័មណាស់ចំពោះយូសុហ្វ! ហើយភ្នែកទាំងពីររបស់គាត់បានប្រែជាពណ៌ស(មើលមិនឃើញ) ដោយសារភាពទុក្ខព្រួយ តែគាត់លាក់បាំងមិនឱ្យគេដឹង ។

قَالُواْ تَٱللَّهِ تَفۡتَؤُاْ تَذۡكُرُ يُوسُفَ حَتَّىٰ تَكُونَ حَرَضًا أَوۡ تَكُونَ مِنَ ٱلۡهَٰلِكِينَ ﴿٨٥﴾

៨៥-ពួកគេ(កូនរបស់គាត់) បាននិយាយថា: សូមស្បថនឹងអល់ឡោះ! ឪពុកនៅតែនឹកដល់យូសុហ្វរហូតដល់ឪពុកចាស់ជរា ឬរហូតដល់ឪពុកស្លាប់ ។

قَالَ إِنَّمَآ أَشۡكُواْ بَثِّي وَحُزۡنِيٓ إِلَى ٱللَّهِ وَأَعۡلَمُ مِنَ ٱللَّهِ مَا لَا تَعۡلَمُونَ ﴿٨٦﴾

៨៦-គាត់បានពោលថា: ពិតប្រាកដណាស់ យើងគ្រាន់តែត្អូញត្អែរនូវការសោកសៅ និងទុក្ខព្រួយរបស់យើងចំពោះអល់ឡោះប៉ុណ្ណោះ ហើយយើងដឹងពីអល់ឡោះនូវអ្វីដែលពួកអ្នកមិនដឹង ។

يَٰبَنِيَّ ٱذۡهَبُواْ فَتَحَسَّسُواْ مِن يُوسُفَ وَأَخِيهِ وَلَا تَاْيۡـَٔسُواْ مِن رَّوۡحِ ٱللَّهِۖ إِنَّهُۥ لَا يَاْيۡـَٔسُ مِن رَّوۡحِ ٱللَّهِ إِلَّا ٱلۡقَوۡمُ ٱلۡكَٰفِرُونَ ﴿٨٧﴾

៨៧-ឱកូនទាំងឡាយរបស់ខ្ញុំ! ចូរពួកអ្នកទៅ ហើយស៊ើបសួររកយូសុហ្វ និងប្អូនប្រុស(ពុនយ៉ាមីន) របស់គេ ហើយកុំអស់សង្ឃឹមពីការប្រោសប្រណីរបស់អល់ឡោះ ។ ពិតប្រាកដណាស់ គ្មានអ្នកណាម្នាក់អស់សង្ឃឹមពីការប្រោសប្រណីរបស់អល់ឡោះឡើយ លើកលែងតែក្រុមដែលប្រឆាំងប៉ុណ្ណោះ ។

فَلَمَّا دَخَلُواْ عَلَيۡهِ قَالُواْ يَٰٓأَيُّهَا ٱلۡعَزِيزُ مَسَّنَا

៨៨-បន្ទាប់មកនៅពេលដែលពួកគេបានចូលទៅជួបគេ(យូ-

سُهْوَّ) ពួកគេបាននិយាយថាៈ ឱលោកម្ចាស់(យូសុហ្វ)អើយ! ពួកយើងនិងគ្រួសាររបស់ពួកយើងបានជួបនឹងគ្រោះរាំងស្ងួត ហើយយើងបាននាំមកនូវលុយកាក់បន្តិចបន្តួច ហេតុនេះសូមលោកមេត្តាជួយបំពេញនូវការវាល់(ដោះដូរស្បៀង)ឱ្យពួកយើង ហើយសូមលោកមេត្តាបរិច្ចាគឱ្យពួកយើងផង។ ពិតប្រាកដណាស់ អល់ឡោះតបស្នងផលបុណ្យចំពោះបណ្ដាអ្នកដែលបរិច្ចាគ។

៨៩-គាត់(យូសុហ្វ)បានពោលថាៈ តើពួកអ្នកបានដឹងឬទេនូវអ្វីដែលពួកអ្នកបានធ្វើទៅលើយូសុហ្វ និងប្អូនប្រុសរបស់គេនៅពេលដែលពួកអ្នកជាអ្នកល្ងង់ខ្លៅនោះ?

៩០-ពួកគេ(បងយូសុហ្វ)បាននិយាយថាៈ តើលោកប្រាកដជាយូសុហ្វឬ? គាត់បានឆ្លើយថាៈ យើងជាយូសុហ្វ ហើយនេះជាប្អូនរបស់ខ្ញុំ(ពុនយ៉ាមីន)។ ជាការពិតណាស់ អល់ឡោះបានប្រោសប្រទានដល់ពួកយើង(ឱ្យយើងបានជួបគ្នាវិញ)។ ពិតប្រាកដណាស់ អ្នកណាហើយដែលកោតខ្លាចនិងអត់ធ្មត់ អល់ឡោះពិតជាមិនបំបាត់ផលបុណ្យរបស់បណ្ដាអ្នកដែលធ្វើល្អនោះឡើយ។

៩១-ពួកគេ(បងយូសុហ្វ)បាននិយាយថាៈ ស្បថនឹងអល់ឡោះចុះ! ជាការពិតអល់ឡោះបានលើកតម្កើងលោកខ្ពស់ជាងពួកយើង ហើយពិតប្រាកដណាស់ ពួកយើងជាអ្នកធ្លាប់មានកំហុស។

៩២-គាត់(យូសុហ្វ)បានពោលថាៈ ពួកអ្នកកុំបន្ទោសខ្លួនឯងនៅថ្ងៃនេះអ្វី! អល់ឡោះនឹងអភ័យទោសដល់ពួកអ្នក ហើយទ្រង់ជាអ្នកអាណិតស្រឡាញ់បំផុត។

៩៣-(យូសុហ្វបានពោលថា)ចូរពួកអ្នកនាំយកអាវរបស់ខ្ញុំនេះ ហើយគ្រវាសលើផ្ទៃមុខរបស់ឪពុកខ្ញុំទៅ គាត់នឹងមើលឃើញឡើងវិញ ហើយចូរពួកអ្នកនាំគ្រួសាររបស់ពួកអ្នកទាំងអស់មកជួបខ្ញុំ។

៩៤-ហើយនៅពេលក្បួនអ្នកដំណើរបានចាកចេញ(ពីអេហ្ស៊ីប) ឪពុករបស់ពួកគេ(នៅភូមិកាន់អានប្រទេសស្ហាម)បានពោលថាៈ ពិតប្រាកដណាស់ យើងធុំក្លិនយូសុហ្វប្រសិនបើពួកអ្នកមិនគិតថា

وَأَهْلَنَا ٱلضُّرُّ وَجِئْنَا بِبِضَٰعَةٍ مُّزْجَىٰةٍ فَأَوْفِ لَنَا ٱلْكَيْلَ وَتَصَدَّقْ عَلَيْنَآ ۖ إِنَّ ٱللَّهَ يَجْزِى ٱلْمُتَصَدِّقِينَ ٨٨

قَالَ هَلْ عَلِمْتُم مَّا فَعَلْتُم بِيُوسُفَ وَأَخِيهِ إِذْ أَنتُمْ جَٰهِلُونَ ٨٩

قَالُوٓا۟ أَءِنَّكَ لَأَنتَ يُوسُفُ ۖ قَالَ أَنَا۠ يُوسُفُ وَهَٰذَآ أَخِى ۖ قَدْ مَنَّ ٱللَّهُ عَلَيْنَآ ۖ إِنَّهُۥ مَن يَتَّقِ وَيَصْبِرْ فَإِنَّ ٱللَّهَ لَا يُضِيعُ أَجْرَ ٱلْمُحْسِنِينَ ٩٠

قَالُوا۟ تَٱللَّهِ لَقَدْ ءَاثَرَكَ ٱللَّهُ عَلَيْنَا وَإِن كُنَّا لَخَٰطِـِٔينَ ٩١

قَالَ لَا تَثْرِيبَ عَلَيْكُمُ ٱلْيَوْمَ ۖ يَغْفِرُ ٱللَّهُ لَكُمْ ۖ وَهُوَ أَرْحَمُ ٱلرَّٰحِمِينَ ٩٢

ٱذْهَبُوا۟ بِقَمِيصِى هَٰذَا فَأَلْقُوهُ عَلَىٰ وَجْهِ أَبِى يَأْتِ بَصِيرًا وَأْتُونِى بِأَهْلِكُمْ أَجْمَعِينَ ٩٣

وَلَمَّا فَصَلَتِ ٱلْعِيرُ قَالَ أَبُوهُمْ إِنِّى لَأَجِدُ رِيحَ يُوسُفَ ۖ لَوْلَآ أَن تُفَنِّدُونِ ٩٤

យើងវង្វេងវង្វាន់ដូចមុនដដែលនោះ ។

قَالُواْ تَٱللَّهِ إِنَّكَ لَفِي ضَلَٰلِكَ ٱلۡقَدِيمِ ﴿٩٥﴾

៩៥-ពួកគេ(អ្នកនៅជាមួយយ៉ាក់កូប)បាននិយាយថាៈ ស្បថនឹងអល់ឡោះចុះ! ពិតប្រាកដណាស់ លោកឪពុកស្ថិតក្នុងភាពវង្វេងវង្វាន់ដូចមុនដដែល ។

فَلَمَّآ أَن جَآءَ ٱلۡبَشِيرُ أَلۡقَىٰهُ عَلَىٰ وَجۡهِهِۦ فَٱرۡتَدَّ بَصِيرٗاۖ قَالَ أَلَمۡ أَقُل لَّكُمۡ إِنِّيٓ أَعۡلَمُ مِنَ ٱللَّهِ مَا لَا تَعۡلَمُونَ ﴿٩٦﴾

៩៦-ក្រោយមក នៅពេលដែលអ្នកនាំដំណឹងរីករាយបានមកដល់ គេ(បងយូសុហ្វ)ក៏បានគ្រវាសអាវនោះលើផ្ទៃមុខរបស់គាត់(ឪពុក) ហើយគាត់ក៏បានមើលឃើញឡើងវិញ ។ គាត់បានពោលថាៈ តើយើងមិនបានប្រាប់ពួកអ្នកទេឬថា យើងពិតជាដឹងពីអល់ឡោះនូវអ្វីដែលពួកអ្នកមិនដឹងនោះ?

قَالُواْ يَٰٓأَبَانَا ٱسۡتَغۡفِرۡ لَنَا ذُنُوبَنَآ إِنَّا كُنَّا خَٰطِـِٔينَ ﴿٩٧﴾

៩៧-ពួកគេ(កូនយ៉ាក់កូប)បាននិយាយថាៈ ឱឪពុករបស់ពួកយើង! សូមលោកឪពុកជួយសុំអភ័យទោស(ពីអល់ឡោះ)ឱ្យពួកយើងនូវបាបកម្មទាំងឡាយរបស់ពួកយើងផង ពិតប្រាកដណាស់ ពួកយើងជាអ្នកដែលធ្លាប់មានកំហុស ។

قَالَ سَوۡفَ أَسۡتَغۡفِرُ لَكُمۡ رَبِّيٓۖ إِنَّهُۥ هُوَ ٱلۡغَفُورُ ٱلرَّحِيمُ ﴿٩٨﴾

៩៨-គាត់(ឪពុក)ក៏បានតបវិញថាៈ យើងនឹងជួយសុំអភ័យទោសពីម្ចាស់របស់យើងឱ្យពួកអ្នក ។ ពិតប្រាកដណាស់ ទ្រង់ជាម្ចាស់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

فَلَمَّا دَخَلُواْ عَلَىٰ يُوسُفَ ءَاوَىٰٓ إِلَيۡهِ أَبَوَيۡهِ وَقَالَ ٱدۡخُلُواْ مِصۡرَ إِن شَآءَ ٱللَّهُ ءَامِنِينَ ﴿٩٩﴾

៩៩-ក្រោយមក នៅពេលដែលពួកគេ(ក្រុមគ្រួសារយូសុហ្វ)បានចូលទៅជួបយូសុហ្វ គាត់ក៏ស្ទុះទៅឱបឪពុកម្ដាយរបស់គាត់ ដោយពោលថាៈ ចូរអ្នកទាំងអស់ចូលមករស់នៅប្រទេសអេហ្ស៊ីបដោយសុវត្ថិភាពចុះអ៊ិនស្ហាអល់ឡោះ(ប្រសិនបើអល់ឡោះមានចេតនា) ។

وَرَفَعَ أَبَوَيۡهِ عَلَى ٱلۡعَرۡشِ وَخَرُّواْ لَهُۥ سُجَّدٗاۖ وَقَالَ يَٰٓأَبَتِ هَٰذَا تَأۡوِيلُ رُءۡيَٰيَ مِن قَبۡلُ قَدۡ جَعَلَهَا رَبِّي حَقّٗاۖ وَقَدۡ أَحۡسَنَ بِيٓ إِذۡ أَخۡرَجَنِي مِنَ ٱلسِّجۡنِ وَجَآءَ بِكُم مِّنَ ٱلۡبَدۡوِ مِنۢ بَعۡدِ أَن نَّزَغَ ٱلشَّيۡطَٰنُ بَيۡنِي وَبَيۡنَ

១០០-ហើយយូសុហ្វបាននាំឪពុកម្ដាយរបស់គេទៅអង្គុយលើបល្ល័ង្គ ហើយពួកគេបានឱនគោរពចំពោះគាត់ ហើយគាត់ក៏បានពោលថាៈ ឱឪពុកជាទីស្រឡាញ់របស់ខ្ញុំ! នេះជាអត្ថន័យនៃសុបិនរបស់ខ្ញុំកាលពីមុន ពិតប្រាកដណាស់ម្ចាស់របស់ខ្ញុំបានធ្វើឱ្យវាក្លាយជាការពិតមែន ។ ហើយពិតណាស់ ទ្រង់បានធ្វើល្អចំពោះខ្ញុំ ដោយទ្រង់បានធ្វើឱ្យខ្ញុំរួចផុតពីមន្ទីរឃុំឃាំង ហើយទ្រង់បាននាំអ្នកទាំងអស់គ្នាចេញពីទីជនបទក្រោយពីស្ហៃតនបានបំបែកបំបាក់រវាងខ្ញុំ

إِخۡوَتِيٓۚ إِنَّ رَبِّي لَطِيفٞ لِّمَا يَشَآءُۚ إِنَّهُۥ
هُوَ ٱلۡعَلِيمُ ٱلۡحَكِيمُ ١٠٠

និងបងប្អូនរបស់ខ្ញុំ។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំមហាទន់ភ្លន់ចំពោះអ្នកណាដែលទ្រង់មានចេតនា។ ពិតប្រាកដណាស់ ទ្រង់មហាដឹង មហាគតិបណ្ឌិត។

۞ رَبِّ قَدۡ ءَاتَيۡتَنِي مِنَ ٱلۡمُلۡكِ وَعَلَّمۡتَنِي مِن
تَأۡوِيلِ ٱلۡأَحَادِيثِۚ فَاطِرَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ
أَنتَ وَلِيِّۦ فِي ٱلدُّنۡيَا وَٱلۡأٓخِرَةِۖ تَوَفَّنِي مُسۡلِمٗا
وَأَلۡحِقۡنِي بِٱلصَّٰلِحِينَ ١٠١

១០១-ឱម្ចាស់របស់ខ្ញុំ! តាមពិតទ្រង់បានផ្តល់ឱ្យខ្ញុំនូវអំណាចមួយចំនួន ហើយបានបង្រៀនខ្ញុំឱ្យចេះកាត់សុបិន ទ្រង់ជាម្ចាស់ដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដី ទ្រង់ជាអ្នកគាំពារខ្ញុំនៅក្នុងលោកិយនេះនិងថ្ងៃបរលោក។ សូមទ្រង់មេត្តាឱ្យខ្ញុំស្លាប់ក្នុងនាមជាអ្នកមូស្លីម និងបញ្ចូលខ្ញុំទៅជាមួយបណ្តាអ្នកដែលសាងអំពើល្អត្រឹមត្រូវផង។

ذَٰلِكَ مِنۡ أَنۢبَآءِ ٱلۡغَيۡبِ نُوحِيهِ إِلَيۡكَۖ وَمَا
كُنتَ لَدَيۡهِمۡ إِذۡ أَجۡمَعُوٓاْ أَمۡرَهُمۡ وَهُمۡ
يَمۡكُرُونَ ١٠٢

១០២-នោះគឺជាដំណឹងអាថ៌កំបាំងមួយចំនួនដែលយើងផ្តល់វាឱ្យអ្នក(មូហាំម៉ាត់)។ ហើយអ្នកមិនធ្លាប់នៅជាមួយពួកគេឡើយនៅពេលដែលពួកគេបានរៀបចំផែនការរបស់ពួកគេជាមួយគ្នាខណៈដែលពួកគេប្រើឧបាយកលនោះ។

وَمَآ أَكۡثَرُ ٱلنَّاسِ وَلَوۡ حَرَصۡتَ
بِمُؤۡمِنِينَ ١٠٣

១០៣-ហើយមនុស្សលោកភាគច្រើនគ្មានជំនឿឡើយ សូម្បីតែអ្នកបានព្យាយាម(ពន្យល់)យ៉ាងណាក៏ដោយ។

وَمَا تَسۡـَٔلُهُمۡ عَلَيۡهِ مِنۡ أَجۡرٍۚ إِنۡ هُوَ إِلَّا ذِكۡرٞ
لِّلۡعَٰلَمِينَ ١٠٤

១០៤-ហើយអ្នកមិនបានសុំកម្រៃពីពួកគេនៅក្នុងរឿងនេះឡើយ។ វា(គម្ពីរគួរអាន)គ្មានអ្វីក្រៅពីការរំលឹកទូន្មានដល់ពិភពទាំងអស់(មនុស្សលោកនិងជិន...)នោះឡើយ។

وَكَأَيِّن مِّنۡ ءَايَةٖ فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ
يَمُرُّونَ عَلَيۡهَا وَهُمۡ عَنۡهَا مُعۡرِضُونَ ١٠٥

១០៥-ហើយមានភស្តុតាងជាច្រើននៅលើមេឃជាច្រើនជាន់និងផែនដី ដែលពួកគេឆ្លងកាត់(មើលឃើញ)វា តែពួកគេបែរចេញ(មិនពិចារណា)ពីវាទៅវិញ។

وَمَا يُؤۡمِنُ أَكۡثَرُهُم بِٱللَّهِ إِلَّا وَهُم
مُّشۡرِكُونَ ١٠٦

១០៦-ហើយពួកគេភាគច្រើនគ្មានជំនឿលើអល់ឡោះឡើយ លើកលែងតែពួកគេជឿដោយធ្វើស្ហ៊ីរិកប៉ុណ្ណោះ។

أَفَأَمِنُوٓاْ أَن تَأۡتِيَهُمۡ غَٰشِيَةٞ مِّنۡ عَذَابِ
ٱللَّهِ أَوۡ تَأۡتِيَهُمُ ٱلسَّاعَةُ بَغۡتَةٗ وَهُمۡ

១០៧-តើពួកគេមានសុវត្ថិភាពដែរឬទេ នៅពេលដែលទណ្ឌកម្មរបស់អល់ឡោះបានគ្របដណ្តប់លើពួកគេ ឬមួយនៅពេលដែលថ្ងៃបរលោកមកដល់ពួកគេជាបន្ទាន់ ដោយពួកគេមិនដឹងខ្លួននោះ?

لَا يَشْعُرُونَ ﴿١٠٧﴾

قُلْ هَٰذِهِۦ سَبِيلِىٓ أَدْعُوٓا۟ إِلَى ٱللَّهِ ۚ عَلَىٰ بَصِيرَةٍ
أَنَا۠ وَمَنِ ٱتَّبَعَنِى ۖ وَسُبْحَٰنَ ٱللَّهِ وَمَآ أَنَا۠ مِنَ
ٱلْمُشْرِكِينَ ﴿١٠٨﴾

وَمَآ أَرْسَلْنَا مِن قَبْلِكَ إِلَّا رِجَالًا نُّوحِىٓ
إِلَيْهِم مِّنْ أَهْلِ ٱلْقُرَىٰٓ ۗ أَفَلَمْ يَسِيرُوا۟ فِى
ٱلْأَرْضِ فَيَنظُرُوا۟ كَيْفَ كَانَ عَٰقِبَةُ ٱلَّذِينَ
مِن قَبْلِهِمْ ۗ وَلَدَارُ ٱلْءَاخِرَةِ خَيْرٌ لِّلَّذِينَ
ٱتَّقَوْا۟ ۗ أَفَلَا تَعْقِلُونَ ﴿١٠٩﴾

حَتَّىٰٓ إِذَا ٱسْتَيْـَٔسَ ٱلرُّسُلُ وَظَنُّوٓا۟ أَنَّهُمْ قَدْ
كُذِبُوا۟ جَآءَهُمْ نَصْرُنَا فَنُجِّىَ مَن نَّشَآءُ ۖ
وَلَا يُرَدُّ بَأْسُنَا عَنِ ٱلْقَوْمِ ٱلْمُجْرِمِينَ ﴿١١٠﴾

لَقَدْ كَانَ فِى قَصَصِهِمْ عِبْرَةٌ لِّأُو۟لِى
ٱلْأَلْبَٰبِ ۗ مَا كَانَ حَدِيثًا يُفْتَرَىٰ وَلَٰكِن
تَصْدِيقَ ٱلَّذِى بَيْنَ يَدَيْهِ وَتَفْصِيلَ كُلِّ
شَىْءٍ وَهُدًى وَرَحْمَةً لِّقَوْمٍ يُؤْمِنُونَ ﴿١١١﴾

### سورة الرعد

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

الٓمٓر ۚ تِلْكَ ءَايَٰتُ ٱلْكِتَٰبِ ۗ وَٱلَّذِىٓ أُنزِلَ

១០៨-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ នេះជាមាគ៌ារបស់ខ្ញុំ ដែលខ្ញុំអំពាវនាវទៅកាន់អល់ឡោះ ដោយមានការចេះដឹងច្បាស់លាស់ ខ្ញុំនិងអ្នកដែលបានដើរតាមខ្ញុំ(ត្រូវអំពាវនាវអ្នកផ្សេងទៀតទៅកាន់អល់ឡោះ)។ ហើយអល់ឡោះមហាជ្រះស្អាត ហើយខ្ញុំមិនមែនជាអ្នកដែលស្ថិតក្នុងចំណោមពួកដែលធ្វើស្ហ៊ីរិកឡើយ។

១០៩-ហើយយើងមិនបានបញ្ជូននរណាម្នាក់មុនអ្នក ក្រៅពីបុរសៗដែលយើងផ្តល់វ៉ាហ៊ីដល់ពួកគេក្នុងចំណោមអ្នកភូមិស្រុកនោះឡើយ។ តើពួកគេមិនបានធ្វើដំណើរនៅលើផែនដីនិងពិនិត្យមើលទេឬថា តើលទ្ធផលចុងក្រោយរបស់ពួកដែលពីមុនពួកគេនោះយ៉ាងដូចម្តេចទៅ? ហើយជាការពិតណាស់ លំនៅដ្ឋាននៅថ្ងៃបរលោកគឺប្រសើរសម្រាប់បណ្តាអ្នកដែលកោតខ្លាចអល់ឡោះ តើពួកអ្នកមិនគិតពិចារណាទេឬ?

១១០-លុះដល់ពេលដែលអ្នកនាំសារទាំងឡាយអស់សង្ឃឹម ដោយពួកគេបានគិតថា ពួកគេពិតជាត្រូវបានគេបដិសេធ។ (ពេលនោះ)ជំនួយរបស់យើងក៏បានមកដល់ពួកគេ ហើយយើងនឹងសង្គ្រោះអ្នកណាដែលយើងមានចេតនា។ ហើយទណ្ឌកម្មរបស់យើងនឹងមិនត្រូវបានគេបញ្ចៀសពីក្រុមដែលប្រព្រឹត្តអំពើអាក្រក់នោះឡើយ។

១១១-តាមពិតនៅក្នុងប្រវត្តិសាស្ត្រនានារបស់ពួកគេ គឺជាមេរៀនសម្រាប់អ្នកដែលមានបញ្ញាញាណ។ វា(គម្ពីរគួរអាន)មិនមែនជាពាក្យសំដីដែលត្រូវគេប្រឌិតនោះឡើយ ក៏ប៉ុន្តែជាការបញ្ជាក់ចំពោះអ្វីដែលមានពីមុនមក(គម្ពីរតាវរ៉ត គម្ពីរអ៊ិញជីល...) និងជាការបរិយាយដ៏លំអិតនូវអ្វីគ្រប់បែបយ៉ាង ហើយនិងជាការចង្អុលបង្ហាញ ព្រមទាំងជាការប្រោសប្រណីសម្រាប់ក្រុមដែលមានជំនឿ។

### ជំពូកអើរ៉អ្ទ៍

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់

១-អាលីហ្វ ឡាម មីម រ៉។ នោះគឺជាអាយ៉ាត់ៗនៃគម្ពីរ(គួរអាន)

إِلَيۡكَ مِن رَّبِّكَ ٱلۡحَقُّ وَلَٰكِنَّ أَكۡثَرَ ٱلنَّاسِ
لَا يُؤۡمِنُونَ ١

និងអ្វីដែលត្រូវបានគេបញ្ចុះឱ្យអ្នកពីម្ចាស់របស់អ្នកដ៏ពិតប្រាកដ ប៉ុន្តែមនុស្សលោកភាគច្រើនមិនជឿឡើយ ។

ٱللَّهُ ٱلَّذِي رَفَعَ ٱلسَّمَٰوَٰتِ بِغَيۡرِ عَمَدٖ تَرَوۡنَهَاۖ
ثُمَّ ٱسۡتَوَىٰ عَلَى ٱلۡعَرۡشِۖ وَسَخَّرَ ٱلشَّمۡسَ
وَٱلۡقَمَرَۖ كُلّٞ يَجۡرِي لِأَجَلٖ مُّسَمّٗىۚ يُدَبِّرُ
ٱلۡأَمۡرَ يُفَصِّلُ ٱلۡأٓيَٰتِ لَعَلَّكُم بِلِقَآءِ رَبِّكُمۡ
تُوقِنُونَ ٢

២-អល់ឡោះជាម្ចាស់ដែលបានលើកមេឃជាច្រើនជាន់ ដោយគ្មានសសរដែលពួកអ្នកមើលឃើញវា ។ បន្ទាប់មកទ្រង់នៅលើអារ៉ស្ហ ហើយទ្រង់បានបញ្ជាព្រះអាទិត្យ និងព្រះច័ន្ទទាំងនោះឱ្យដើរតាមគន្លងរហូតដល់ពេលវេលាដែលបានកំណត់ ។ ទ្រង់ជាអ្នករៀបចំគ្រប់កិច្ចការ ដោយទ្រង់បញ្ជាក់យ៉ាងច្បាស់នូវភស្តុតាងទាំងឡាយ សង្ឃឹមថាពួកអ្នកជឿជាក់ថានឹងបានជួបម្ចាស់របស់ពួកអ្នក ។

وَهُوَ ٱلَّذِي مَدَّ ٱلۡأَرۡضَ وَجَعَلَ فِيهَا رَوَٰسِيَ
وَأَنۡهَٰرٗاۖ وَمِن كُلِّ ٱلثَّمَرَٰتِ جَعَلَ فِيهَا زَوۡجَيۡنِ
ٱثۡنَيۡنِۖ يُغۡشِي ٱلَّيۡلَ ٱلنَّهَارَۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ
لِّقَوۡمٖ يَتَفَكَّرُونَ ٣

៣-ហើយទ្រង់ជាម្ចាស់ដែលបានពង្រាបផែនដី ហើយទ្រង់បានបង្កើតភ្នំជាច្រើន(ជាលំនឹង) និងទន្លេជាច្រើននៅលើវា(ផែនដី) ហើយទ្រង់ក៏បានបង្កើតនៅលើវានូវរាល់ផលានុផលទាំងអស់ឱ្យមានជាគូៗ ទ្រង់ធ្វើឱ្យពេលយប់គ្របដណ្តប់ពេលថ្ងៃ ។ ពិតប្រាកដណាស់ ទាំងអស់នោះគឺជាភស្តុតាងៗសម្រាប់ក្រុមដែលចេះពិចារណា ។

وَفِي ٱلۡأَرۡضِ قِطَعٞ مُّتَجَٰوِرَٰتٞ وَجَنَّٰتٞ مِّنۡ
أَعۡنَٰبٖ وَزَرۡعٞ وَنَخِيلٞ صِنۡوَانٞ وَغَيۡرُ صِنۡوَانٖ
يُسۡقَىٰ بِمَآءٖ وَٰحِدٖ وَنُفَضِّلُ بَعۡضَهَا عَلَىٰ
بَعۡضٖ فِي ٱلۡأُكُلِۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ
لِّقَوۡمٖ يَعۡقِلُونَ ٤

៤-ហើយនៅលើផែនដី មានតំបន់ជាប់ៗគ្នា និងមានចំការជាច្រើនដូចជាទំពាំងបាយជូរ និងដំណាំ និងល្មើ ដោយមានខ្នែងនិងគ្មានខ្នែងដែលត្រូវបានគេស្រោចស្រពនឹងទឹកតែមួយ តែយើងផ្តល់គុណភាពខុសគ្នាពីមួយទៅមួយក្នុងការបរិភោគ ។ ពិតប្រាកដណាស់ ទាំងអស់នោះគឺជាភស្តុតាងសម្រាប់ក្រុមដែលចេះគិតពិចារណា ។

۞ وَإِن تَعۡجَبۡ فَعَجَبٞ قَوۡلُهُمۡ أَءِذَا كُنَّا تُرَٰبًا
أَءِنَّا لَفِي خَلۡقٖ جَدِيدٍۗ أُوْلَٰٓئِكَ ٱلَّذِينَ
كَفَرُواْ بِرَبِّهِمۡۖ وَأُوْلَٰٓئِكَ ٱلۡأَغۡلَٰلُ فِيٓ أَعۡنَاقِهِمۡۖ
وَأُوْلَٰٓئِكَ أَصۡحَٰبُ ٱلنَّارِۖ هُمۡ فِيهَا خَٰلِدُونَ ٥

៥-ហើយប្រសិនបើអ្នក(មូហាំម៉ាត់)ឆ្ងល់(ក្នុងការបដិសេធរបស់ពួកគេចំពោះអ្នក) គឺគួរតែមានការងឿងឆ្ងល់ទៅចំពោះពាក្យសំដីរបស់ពួកគេដែលនិយាយថា: តើនៅពេលដែលពួកយើងក្លាយជាដីហើយនោះ ពួកយើងពិតជានឹងកើតឡើងជាថ្មីម្តងទៀតឬ? ពួកទាំងនោះហើយគឺជាពួកដែលបានប្រឆាំងនឹងម្ចាស់របស់ពួកគេ ហើយពួកទាំងនោះត្រូវបានគេចងច្រវ៉ាក់នៅលើករបស់ពួកគេ ហើយពួកទាំងនោះគឺជាពួកនរក ដោយពួកគេស្ថិតនៅក្នុងនោះជា

អមត:។

وَيَسۡتَعۡجِلُونَكَ بِٱلسَّيِّئَةِ قَبۡلَ ٱلۡحَسَنَةِ وَقَدۡ خَلَتۡ مِن قَبۡلِهِمُ ٱلۡمَثُلَٰتُۗ وَإِنَّ رَبَّكَ لَذُو مَغۡفِرَةٖ لِّلنَّاسِ عَلَىٰ ظُلۡمِهِمۡۖ وَإِنَّ رَبَّكَ لَشَدِيدُ ٱلۡعِقَابِ ﴿٦﴾

៦-ហើយពួកគេសុំអ្នក(មូហាំម៉ាត់)ឱ្យផ្តល់នូវប្រការអាក្រក់ភ្លាមៗមុននឹងប្រការល្អមកដល់ ហើយតាមការពិតរឿងរ៉ាវបែបនេះបានកើតឡើងជាច្រើនដងមកហើយមុនពួកគេ។ ហើយជាការពិតណាស់ ម្ចាស់របស់អ្នកគឺពោរពេញទៅដោយសេចក្តីអនុគ្រោះចំពោះមនុស្សលោកលើការបំពានរបស់ពួកគេ។ ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺដាក់ទណ្ឌកម្មធ្ងន់ធ្ងរបំផុត។

وَيَقُولُ ٱلَّذِينَ كَفَرُواْ لَوۡلَآ أُنزِلَ عَلَيۡهِ ءَايَةٞ مِّن رَّبِّهِۦٓۗ إِنَّمَآ أَنتَ مُنذِرٞۖ وَلِكُلِّ قَوۡمٍ هَادٍ ﴿٧﴾

៧-ហើយពួកដែលបានប្រឆាំងនិយាយថាៈ ហេតុអ្វីបានជាគេមិនបានបញ្ចុះឱ្យគេ(មូហាំម៉ាត់)នូវមុជីហ្សាត់ពីម្ចាស់របស់គេ? តាមពិតអ្នកគ្រាន់តែជាអ្នកដាស់តឿនព្រមានប៉ុណ្ណោះ។ ហើយរាល់ៗក្រុមតែងតែមានអ្នកចង្អុលបង្ហាញ។

ٱللَّهُ يَعۡلَمُ مَا تَحۡمِلُ كُلُّ أُنثَىٰ وَمَا تَغِيضُ ٱلۡأَرۡحَامُ وَمَا تَزۡدَادُۖ وَكُلُّ شَيۡءٍ عِندَهُۥ بِمِقۡدَارٍ ﴿٨﴾

៨-អល់ឡោះដឹងនូវអ្វីដែលស្ត្រីទាំងអស់មានគភ៌ហើយអ្វីដែលស្បូនកើតមិនគ្រប់ខែ(ឬរលូត) និងកើតលើសខែ។ ហើយអ្វីៗទាំងអស់ទ្រង់មានការកំណត់រួចជាស្រេច។

عَٰلِمُ ٱلۡغَيۡبِ وَٱلشَّهَٰدَةِ ٱلۡكَبِيرُ ٱلۡمُتَعَالِ ﴿٩﴾

៩-ទ្រង់ជាម្ចាស់ដែលដឹងពីភាពអាថ៌កំបាំងនិងភាពលាតត្រដាង(ហើយទ្រង់ជាម្ចាស់)ដ៏មហិមា មហាឧត្តុង្គឧត្តម។

سَوَآءٞ مِّنكُم مَّنۡ أَسَرَّ ٱلۡقَوۡلَ وَمَن جَهَرَ بِهِۦ وَمَنۡ هُوَ مُسۡتَخۡفِۭ بِٱلَّيۡلِ وَسَارِبُۢ بِٱلنَّهَارِ ﴿١٠﴾

១០-គឺ(អល់ឡោះដឹង)ដូចតែគ្នាទេចំពោះអ្នកដែលបាននិយាយខ្សឹប និងអ្នកដែលបាននិយាយខ្លាំង ហើយនិងអ្នកដែលលាក់បាំង(ទង្វើ)នៅពេលយប់ និងបើកចំហនៅពេលថ្ងៃក្នុងចំណោមពួកអ្នក។

لَهُۥ مُعَقِّبَٰتٞ مِّنۢ بَيۡنِ يَدَيۡهِ وَمِنۡ خَلۡفِهِۦ يَحۡفَظُونَهُۥ مِنۡ أَمۡرِ ٱللَّهِۗ إِنَّ ٱللَّهَ لَا يُغَيِّرُ مَا بِقَوۡمٍ حَتَّىٰ يُغَيِّرُواْ مَا بِأَنفُسِهِمۡۗ وَإِذَآ أَرَادَ ٱللَّهُ بِقَوۡمٖ سُوٓءٗا فَلَا مَرَدَّ لَهُۥۚ وَمَا لَهُم مِّن دُونِهِۦ مِن وَالٍ ﴿١١﴾

១១-សម្រាប់គេ(មនុស្ស)មានអ្នកនៅឃ្លាំមើល(ម៉ាឡាអ៊ីកាត់)នៅពីមុខគេ និងពីក្រោយគេដែលពួកគេនៅការពារគេ(មនុស្ស)តាមបទបញ្ជារបស់អល់ឡោះ។ ជាការពិតណាស់ អល់ឡោះនឹងមិនផ្លាស់ប្តូរនូវអ្វីដែលមាននៅក្នុងក្រុមណាមួយឡើយ លុះត្រាតែពួកគេផ្លាស់ប្តូរនូវអ្វីនោះដោយខ្លួនឯងផ្ទាល់។ ហើយនៅពេលដែលអល់ឡោះចង់ដាក់ទណ្ឌកម្មទៅលើក្រុមណាមួយ គឺគ្មានអ្នកណាអាចរារាំងវាបានឡើយ។ ហើយពួកគេក៏គ្មាន

អ្នកគាំពារណាក្រៅពីទ្រង់ដែរ ។

១២-ទ្រង់ជាម្ចាស់ដែលបង្ហាញឱ្យពួកអ្នកឃើញផ្លេកបន្ទោរ ដោយមានការភ័យខ្លាច និងមានសង្ឃឹម( ថានឹងមានទឹកភ្លៀង) ហើយទ្រង់បង្កើតឱ្យមានដុំពពកជាច្រើន( ក្លាយជាទឹកភ្លៀង) ។

هُوَ ٱلَّذِى يُرِيكُمُ ٱلْبَرْقَ خَوْفًا وَطَمَعًا وَيُنشِئُ ٱلسَّحَابَ ٱلثِّقَالَ ﴿١٢﴾

១៣-ហើយផ្គរលាន់និងម៉ាឡាអ៊ីកាត់លើកតម្កើង( អល់ឡោះ) ជាមួយនឹងការកោតសរសើរចំពោះទ្រង់ ដោយសារតែការកោតខ្លាចចំពោះទ្រង់ ។ ហើយទ្រង់បញ្ជូនរន្ទះជាច្រើន រួចទ្រង់ក៏ធ្វើឱ្យរងគ្រោះដោយសារវាចំពោះនរណាដែលទ្រង់មានចេតនា ដោយពួកគេ( ពួកគ្មានជំនឿ) ឈ្លោះប្រកែកគ្នាពីរឿងអល់ឡោះ ហើយទ្រង់ជាអ្នកធ្វើទារុណកម្មដ៏ខ្លាំងក្លាបំផុត ។

وَيُسَبِّحُ ٱلرَّعْدُ بِحَمْدِهِۦ وَٱلْمَلَٰٓئِكَةُ مِنْ خِيفَتِهِۦ وَيُرْسِلُ ٱلصَّوَٰعِقَ فَيُصِيبُ بِهَا مَن يَشَآءُ وَهُمْ يُجَٰدِلُونَ فِى ٱللَّهِ وَهُوَ شَدِيدُ ٱلْمِحَالِ ﴿١٣﴾

១៤-ការបួងសួងដ៏ពិតប្រាកដនោះ គឺចំពោះអល់ឡោះតែមួយគត់ ។ ហើយព្រះនានាដែលពួកគេបួងសួងក្រៅពីអល់ឡោះនោះ ព្រះទាំងនោះមិនអាចឆ្លើយតបអ្វីចំពោះពួកគេឡើយ ។ ផ្ទុយទៅវិញ វាប្រៀបដូចជាអ្នកដែលលាបាតដៃទាំងពីររបស់គេទៅរកទឹក ដើម្បីយកទឹកមកដាក់ក្នុងមាត់របស់គេប៉ុណ្ណោះ តែគេមិនអាចយកទឹកនោះមកដល់មាត់របស់គេបានឡើយ ។ ហើយការបួងសួងរបស់ពួកដែលគ្មានជំនឿនោះគ្មានអ្វីក្រៅពីភាពវង្វេងឡើយ ។

لَهُۥ دَعْوَةُ ٱلْحَقِّ ۖ وَٱلَّذِينَ يَدْعُونَ مِن دُونِهِۦ لَا يَسْتَجِيبُونَ لَهُم بِشَىْءٍ إِلَّا كَبَٰسِطِ كَفَّيْهِ إِلَى ٱلْمَآءِ لِيَبْلُغَ فَاهُ وَمَا هُوَ بِبَٰلِغِهِۦ ۚ وَمَا دُعَآءُ ٱلْكَٰفِرِينَ إِلَّا فِى ضَلَٰلٍ ﴿١٤﴾

១៥-ហើយអ្នកដែលនៅលើមេឃជាច្រើនជាន់ និងផែនដីស៊ូជូតចំពោះអល់ឡោះតែមួយគត់ដោយការស្ម័គ្រចិត្ត ឬមិនស្ម័គ្រចិត្ត ហើយស្រមោលរបស់ពួកគេនៅពេលព្រឹក និងពេលល្ងាច( ក៏ស៊ូជូតដែរ) ។

وَلِلَّهِ يَسْجُدُ مَن فِى ٱلسَّمَٰوَٰتِ وَٱلْأَرْضِ طَوْعًا وَكَرْهًا وَظِلَٰلُهُم بِٱلْغُدُوِّ وَٱلْءَاصَالِ ۩ ﴿١٥﴾

១៦-ចូរអ្នក( មូហាំម៉ាត់) ពោលថា: តើអ្នកណាជាម្ចាស់នៃមេឃច្រើនជាន់ និងផែនដីនោះ? ចូរអ្នកពោលថា: គឺអល់ឡោះ ។ ចូរអ្នកពោលថា: តើពួកអ្នកបានយកម្ចាស់ក្រៅពីទ្រង់ធ្វើជាអ្នកគាំពារដែលព្រះទាំងនោះគ្មានលទ្ធភាពចំពោះខ្លួនឯងក្នុងការផ្តល់ផលប្រយោជន៍ ឬផ្តល់គ្រោះថ្នាក់នោះឬ? ចូរអ្នកពោលថា: តើអ្នកដែលងងឹតភ្នែក និងអ្នកដែលមើលឃើញស្មើគ្នាដែរឬទេ? ឬមួយភាពងងឹត និងភាពមានពន្លឺស្មើគ្នា? ឬមួយក៏ពួកគេបានយកព្រះនានាមក

قُلْ مَن رَّبُّ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ قُلِ ٱللَّهُ ۚ قُلْ أَفَٱتَّخَذْتُم مِّن دُونِهِۦٓ أَوْلِيَآءَ لَا يَمْلِكُونَ لِأَنفُسِهِمْ نَفْعًا وَلَا ضَرًّا ۚ قُلْ هَلْ يَسْتَوِى ٱلْأَعْمَىٰ وَٱلْبَصِيرُ أَمْ هَلْ تَسْتَوِى ٱلظُّلُمَٰتُ وَٱلنُّورُ ۗ أَمْ جَعَلُوا۟ لِلَّهِ شُرَكَآءَ خَلَقُوا۟

كَخَلْقِهِۦ فَتَشَٰبَهَ ٱلْخَلْقُ عَلَيْهِمْ ۚ قُلِ ٱللَّهُ خَٰلِقُ
كُلِّ شَىْءٍ وَهُوَ ٱلْوَٰحِدُ ٱلْقَهَّٰرُ ﴿١٦﴾

ធ្វើជាដៃគូជាមួយអល់ឡោះដែលថា ព្រះទាំងនោះបានបង្កើតអ្វីៗដូចនឹងការបង្កើតរបស់ទ្រង់ដែរ រហូតដល់ការបង្កើត(ទាំងពីរ)បានធ្វើឱ្យភ័ន្តច្រឡំចំពោះពួកគេឬ? ចូរអ្នកពោលថាៈ អល់ឡោះគឺជាអ្នកបង្កើតនូវអ្វីៗទាំងអស់ ហើយទ្រង់ជាម្ចាស់តែមួយគត់ដែលមហាខ្លាំងពូកែ។

أَنزَلَ مِنَ ٱلسَّمَآءِ مَآءً فَسَالَتْ أَوْدِيَةٌۢ
بِقَدَرِهَا فَٱحْتَمَلَ ٱلسَّيْلُ زَبَدًا رَّابِيًا ۚ وَمِمَّا
يُوقِدُونَ عَلَيْهِ فِى ٱلنَّارِ ٱبْتِغَآءَ حِلْيَةٍ أَوْ مَتَٰعٍ
زَبَدٌ مِّثْلُهُۥ ۚ كَذَٰلِكَ يَضْرِبُ ٱللَّهُ ٱلْحَقَّ
وَٱلْبَٰطِلَ ۚ فَأَمَّا ٱلزَّبَدُ فَيَذْهَبُ جُفَآءً ۖ وَأَمَّا
مَا يَنفَعُ ٱلنَّاسَ فَيَمْكُثُ فِى ٱلْأَرْضِ ۚ
كَذَٰلِكَ يَضْرِبُ ٱللَّهُ ٱلْأَمْثَالَ ﴿١٧﴾

១៧-ទ្រង់បានបញ្ចុះទឹកភ្លៀងពីលើមេឃ ហើយជ្រលងនានាបានហូរទៅតាមគន្លងរបស់វា ដោយការហូរនោះបាននាំមកនូវពពុះរីកខ្ពស់ជាច្រើន។ ហើយអ្វីៗដែលគេយកទៅដុតវានៅក្នុងភ្លើងដើម្បីចម្រាញ់ជាគ្រឿងអលង្កា ឬរបស់ប្រើប្រាស់ក៏មានពពុះដូចគ្នាដែរ។ ដូច្នោះដែរអល់ឡោះប្រៀបធៀបរឿងពិត និងរឿងមិនពិត។ ចំណែកឯពពុះគឺនឹងត្រូវរលាយបាត់។ ហើយចំណែកឯអ្វីដែលមានប្រយោជន៍ដល់មនុស្សលោក វានឹងស្ថិតនៅលើផែនដី។ ដូច្នោះដែរ អល់ឡោះលើកឧទាហរណ៍ផ្សេងៗជាច្រើនទៀត។

لِلَّذِينَ ٱسْتَجَابُوا۟ لِرَبِّهِمُ ٱلْحُسْنَىٰ ۚ وَٱلَّذِينَ
لَمْ يَسْتَجِيبُوا۟ لَهُۥ لَوْ أَنَّ لَهُم مَّا فِى
ٱلْأَرْضِ جَمِيعًا وَمِثْلَهُۥ مَعَهُۥ لَٱفْتَدَوْا۟ بِهِۦٓ ۚ
أُو۟لَٰٓئِكَ لَهُمْ سُوٓءُ ٱلْحِسَابِ وَمَأْوَىٰهُمْ جَهَنَّمُ ۖ
وَبِئْسَ ٱلْمِهَادُ ﴿١٨﴾

១៨-សម្រាប់បណ្ដាអ្នកដែលបានឆ្លើយតបនឹងម្ចាស់របស់ពួកគេ(ជឿលើអល់ឡោះនិងអ្នកនាំសារ)គឺទទួលបានផលល្អ(ចូលឋានសួគ៌)។ រីឯពួកដែលមិនបានឆ្លើយតបនឹងទ្រង់ ប្រសិនបើពួកគេមានអ្វីៗគ្រប់បែបយ៉ាងនៅលើផែនដីនេះទ្វេដងវិញ ពួកគេប្រាកដជានឹងយកទ្រព្យសម្បត្តិទាំងនោះទៅដោះដូរខ្លួនរបស់ពួកគេ(ចេញពីទារុណកម្ម)ជាមិនខាន។ ពួកទាំងនោះសម្រាប់ពួកគេគឺការជំនុំជំរះដ៏អាក្រក់ ហើយលំនៅដ្ឋានរបស់ពួកគេ គឺនរកជើហាន់ណាំដែលជាកន្លែងដ៏អាក្រក់បំផុត។

۞ أَفَمَن يَعْلَمُ أَنَّمَآ أُنزِلَ إِلَيْكَ مِن رَّبِّكَ
ٱلْحَقُّ كَمَنْ هُوَ أَعْمَىٰٓ ۚ إِنَّمَا يَتَذَكَّرُ أُو۟لُوا۟
ٱلْأَلْبَٰبِ ﴿١٩﴾

១៩-តើអ្នកដែលដឹងថា អ្វីដែលត្រូវបានគេបញ្ចុះមកឱ្យអ្នក(មូហាំម៉ាត់)ពីម្ចាស់របស់អ្នកគឺជាការពិតនោះ ដូចជាអ្នកដែលងងឹត(មិនដឹងការពិត)ឬ? តាមពិតមានតែបណ្ដាបញ្ញាជនទេដែលចេះគិតពិចារណា ។

ٱلَّذِينَ يُوفُونَ بِعَهْدِ ٱللَّهِ وَلَا يَنقُضُونَ
ٱلْمِيثَٰقَ ﴿٢٠﴾

២០-គឺបណ្ដាអ្នកដែលបំពេញកិច្ចសន្យារបស់អល់ឡោះ ហើយពួកគេមិនក្បត់នូវកិច្ចសន្យាឡើយ។

وَٱلَّذِينَ يَصِلُونَ مَآ أَمَرَ ٱللَّهُ بِهِۦٓ أَن يُوصَلَ
وَيَخۡشَوۡنَ رَبَّهُمۡ وَيَخَافُونَ
سُوٓءَ ٱلۡحِسَابِ ٢١

២១-និងបណ្ដាអ្នកដែលផ្សារភ្ជាប់នូវអ្វីដែលអល់ឡោះបានបញ្ជាឱ្យផ្សារភ្ជាប់(សាច់ញាតិ អ្នកជិតខាង...) ហើយពួកគេកោតខ្លាចម្ចាស់របស់ពួកគេ និងពួកគេភ័យខ្លាចនូវការជំនុំជំរះដ៏អាក្រក់។

وَٱلَّذِينَ صَبَرُواْ ٱبۡتِغَآءَ وَجۡهِ رَبِّهِمۡ وَأَقَامُواْ
ٱلصَّلَوٰةَ وَأَنفَقُواْ مِمَّا رَزَقۡنَٰهُمۡ سِرّٗا وَعَلَانِيَةٗ
وَيَدۡرَءُونَ بِٱلۡحَسَنَةِ ٱلسَّيِّئَةَ أُوْلَٰٓئِكَ لَهُمۡ
عُقۡبَى ٱلدَّارِ ٢٢

២២-ហើយនិងបណ្ដាអ្នកដែលបានអត់ធ្មត់ ដើម្បីស្វែងរកការយល់ព្រមពីម្ចាស់របស់ពួកគេ ហើយពួកគេបានប្រតិបត្តិសឡាត និងបានបរិច្ចាគនូវអ្វីដែលយើងបានផ្ដល់លាភសក្ការៈឱ្យពួកគេដោយអាថ៌កំបាំងនិងលាតត្រដាង ហើយពួកគេច្រានចោលអំពើអាក្រក់ដោយអំពើល្អ។ អ្នកទាំងនោះនឹងទទួលបានលទ្ធផលចុងក្រោយដ៏ល្អប្រសើរ។

جَنَّٰتُ عَدۡنٖ يَدۡخُلُونَهَا وَمَن صَلَحَ مِنۡ
ءَابَآئِهِمۡ وَأَزۡوَٰجِهِمۡ وَذُرِّيَّٰتِهِمۡۖ وَٱلۡمَلَٰٓئِكَةُ
يَدۡخُلُونَ عَلَيۡهِم مِّن كُلِّ بَابٖ ٢٣

២៣-គឺឋានសួគ៌អាត់និនដែលពួកគេនឹងចូលទៅក្នុងវា និងអ្នកដែលបានធ្វើល្អក្នុងចំណោមជីដូនជីតារបស់ពួកគេ ហើយនិងភរិយារបស់ពួកគេ ព្រមទាំងកូនចៅរបស់ពួកគេ។ ហើយបណ្ដាម៉ាឡាអ៊ីកាត់ក៏ចូលទៅជួបពួកគេ(ដើម្បីជូនពរ)តាមរាល់ៗទ្វារផងដែរ។

سَلَٰمٌ عَلَيۡكُم بِمَا صَبَرۡتُمۡۚ فَنِعۡمَ عُقۡبَى
ٱلدَّارِ ٢٤

២៤-(ម៉ាឡាអ៊ីកាត់ពោលថា) សូមសុខសន្តិភាពកើតមានចំពោះពួកអ្នកដោយសារតែអ្វីដែលពួកអ្នកបានអត់ធ្មត់។ ដូច្នេះលំនៅដ្ឋានចុងក្រោយគឺល្អបំផុត។

وَٱلَّذِينَ يَنقُضُونَ عَهۡدَ ٱللَّهِ مِنۢ بَعۡدِ مِيثَٰقِهِۦ
وَيَقۡطَعُونَ مَآ أَمَرَ ٱللَّهُ بِهِۦٓ أَن يُوصَلَ
وَيُفۡسِدُونَ فِي ٱلۡأَرۡضِ أُوْلَٰٓئِكَ لَهُمُ ٱللَّعۡنَةُ
وَلَهُمۡ سُوٓءُ ٱلدَّارِ ٢٥

២៥-រីឯពួកដែលក្បត់កិច្ចសន្យារបស់អល់ឡោះក្រោយពីមានការព្រមព្រៀងវាហើយនោះ ហើយពួកគេកាត់ផ្ដាច់នូវអ្វីដែលអល់ឡោះបានបញ្ជាឱ្យផ្សារភ្ជាប់ ព្រមទាំងពួកគេបង្កវិនាសកម្មនៅលើផែនដី។ ពួកទាំងនោះនឹងត្រូវទទួលរងបណ្ដាសា និងទទួលបានលំនៅដ្ឋានដ៏អាក្រក់។

ٱللَّهُ يَبۡسُطُ ٱلرِّزۡقَ لِمَن يَشَآءُ وَيَقۡدِرُۚ وَفَرِحُواْ
بِٱلۡحَيَوٰةِ ٱلدُّنۡيَا وَمَا ٱلۡحَيَوٰةُ ٱلدُّنۡيَا فِي
ٱلۡأٓخِرَةِ إِلَّا مَتَٰعٞ ٢٦

២៦-អល់ឡោះបើកទូលាយ និងដាក់កំណត់នូវលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយពួកគេសប្បាយរីករាយនឹងការរស់នៅលើលោកិយនេះ ហើយការរស់នៅលើលោកិយនេះគ្មានអ្វី(សំខាន់)សម្រាប់ថ្ងៃបរលោកឡើយ ផ្ទុយទៅវិញវាគ្រាន់តែជាការសប្បាយរីករាយមួយរយៈពេលតែប៉ុណ្ណោះ។

២៧-ហើយពួកដែលបានប្រឆាំងនិយាយថាៈ ហេតុអ្វីបានជាគេមិនបានបញ្ចុះមុជីហ្សាត់ពីម្ចាស់របស់គេ( មូហាំម៉ាត់)ឱ្យគេ? ចូរអ្នក( មូហាំម៉ាត់)ពោលថាៈ ពិតប្រាកដណាស់ អល់ឡោះធ្វើឱ្យវង្វេងចំពោះអ្នកណាដែលទ្រង់មានចេតនា ហើយទ្រង់ចង្អុលបង្ហាញដល់អ្នកណាដែលបានសារភាពកំហុសចំពោះទ្រង់ ។

وَيَقُولُ ٱلَّذِينَ كَفَرُواْ لَوۡلَآ أُنزِلَ عَلَيۡهِ ءَايَةٞ مِّن
رَّبِّهِۦۗ قُلۡ إِنَّ ٱللَّهَ يُضِلُّ مَن يَشَآءُ وَيَهۡدِيٓ
إِلَيۡهِ مَنۡ أَنَابَ ٢٧

២៨-បណ្តាអ្នកដែលមានជំនឿ ហើយចិត្តរបស់ពួកគេមានការនឹងនរដោយសារតែការរំលឹកទៅចំពោះអល់ឡោះ ។ តើការរំលឹកទៅចំពោះអល់ឡោះមិនធ្វើឱ្យចិត្តនឹងនរទេឬ?

ٱلَّذِينَ ءَامَنُواْ وَتَطۡمَئِنُّ قُلُوبُهُم بِذِكۡرِ ٱللَّهِۗ أَلَا
بِذِكۡرِ ٱللَّهِ تَطۡمَئِنُّ ٱلۡقُلُوبُ ٢٨

២៩-បណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អនោះ សុភមង្គលនឹងមានសម្រាប់ពួកគេ ហើយមានកន្លែងវិលត្រឡប់ដ៏ល្អប្រពៃ( ឋានសួគ៌) ។

ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ طُوبَىٰ
لَهُمۡ وَحُسۡنُ مَـَٔابٖ ٢٩

៣០-ដូច្នោះហើយ យើងបានបញ្ជូនអ្នក( មូហាំម៉ាត់)ទៅចំពោះប្រជាជាតិមួយ ក៏ដូចជាប្រជាជាតិសម័យមុនបានឆ្លងកាត់ដែរ គឺដើម្បីឱ្យអ្នកសូត្រប្រដៅពួកគេអំពីអ្វីដែលយើងបានផ្តល់វ៉ាហ៊ីឱ្យអ្នកខណៈដែលពួកគេប្រឆាំងនឹងអល់ឡោះជាម្ចាស់ដ៏មហាសប្បុរស ។ ចូរអ្នកពោលថាៈ ទ្រង់គឺជាម្ចាស់របស់ខ្ញុំដែលគ្មានម្ចាស់ណាត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ ខ្ញុំបានប្រគល់ការទុកចិត្តចំពោះទ្រង់តែមួយគត់ ហើយខ្ញុំក៏សារភាពទោសកំហុសទៅចំពោះទ្រង់ដែរ ។

كَذَٰلِكَ أَرۡسَلۡنَٰكَ فِيٓ أُمَّةٖ قَدۡ خَلَتۡ مِن قَبۡلِهَآ
أُمَمٞ لِّتَتۡلُوَاْ عَلَيۡهِمُ ٱلَّذِيٓ أَوۡحَيۡنَآ إِلَيۡكَ وَهُمۡ
يَكۡفُرُونَ بِٱلرَّحۡمَٰنِۚ قُلۡ هُوَ رَبِّي لَآ إِلَٰهَ إِلَّا
هُوَ عَلَيۡهِ تَوَكَّلۡتُ وَإِلَيۡهِ مَتَابِ ٣٠

៣១- ហើយប្រសិនបើគម្ពីរគួរអាន( ត្រូវបានគេសូត្រ) ធ្វើឱ្យភ្នំនានាត្រូវបានរំកិលដោយសារវា ឬផែនដីត្រូវបានបែកខ្ញែក ដោយសារវា ឬមួយសាកសពទាំងឡាយត្រូវបានគេធ្វើឱ្យចេះនិយាយដោយសារវា( ក៏ពួកមូស្ហ្ទីគីននៅតែមិនជឿដដែល) ។ ផ្ទុយទៅវិញកិច្ចការទាំងអស់ជាកម្មសិទ្ធិរបស់អល់ឡោះតែមួយ គត់ ។ តើបណ្តាអ្នកដែលមានជំនឿមិនបានដឹងទេឬថាប្រសិនបើ អល់ឡោះមានចេតនា ទ្រង់ប្រាកដជាចង្អុលបង្ហាញចំពោះមនុស្ស លោកទាំងអស់ ។ ហើយពួកដែលបានប្រឆាំងនោះក្តីអន្តរាយនៅតែ បន្តធ្លាក់លើពួកគេដោយសារតែអ្វីដែលពួកគេបានប្រព្រឹត្ត ឬមហន្តរាយនឹងកើតឡើង

وَلَوۡ أَنَّ قُرۡءَانٗا سُيِّرَتۡ بِهِ ٱلۡجِبَالُ أَوۡ قُطِّعَتۡ
بِهِ ٱلۡأَرۡضُ أَوۡ كُلِّمَ بِهِ ٱلۡمَوۡتَىٰۗ بَل لِّلَّهِ ٱلۡأَمۡرُ
جَمِيعًاۗ أَفَلَمۡ يَاْيۡـَٔسِ ٱلَّذِينَ ءَامَنُوٓاْ أَن لَّوۡ
يَشَآءُ ٱللَّهُ لَهَدَى ٱلنَّاسَ جَمِيعٗاۗ وَلَا يَزَالُ
ٱلَّذِينَ كَفَرُواْ تُصِيبُهُم بِمَا صَنَعُواْ قَارِعَةٌ أَوۡ
تَحُلُّ قَرِيبٗا مِّن دَارِهِمۡ حَتَّىٰ يَأۡتِيَ وَعۡدُ ٱللَّهِۚ
إِنَّ ٱللَّهَ لَا يُخۡلِفُ ٱلۡمِيعَادَ ٣١

នៅជិតលំនៅដ្ឋានរបស់ពួកគេរហូតទាល់តែកិច្ច សន្យារបស់អល់ឡោះមកដល់ ។ ពិតប្រាកដណាស់ អល់ឡោះមិនក្បត់កិច្ចសន្យាឡើយ ។

៣២-ហើយជាការពិតណាស់ បណ្ដាអ្នកនាំសារពីមុនអ្នក( មូហាំម៉ាត់) ក៏ត្រូវបានគេសើចចំអកដែរ ហើយយើងបានពន្យារពេល( ធ្វើទារុណកម្ម) ពួកដែលប្រឆាំង តែក្រោយមកយើងក៏បានដាក់ទណ្ឌកម្មពួកគេវិញ ។ តើទារុណកម្មរបស់យើងយ៉ាងដូចម្ដេចដែរ?

وَلَقَدِ ٱسْتُهْزِئَ بِرُسُلٍ مِّن قَبْلِكَ فَأَمْلَيْتُ
لِلَّذِينَ كَفَرُوا۟ ثُمَّ أَخَذْتُهُمْ ۖ فَكَيْفَ كَانَ
عِقَابِ ﴿٣٢﴾

៣៣-ដូច្នេះ តើអ្នកដែលគ្រប់គ្រងបុគ្គលគ្រប់រូបនូវអ្វីដែលគេបានប្រព្រឹត្តនោះ( ដូចនឹងអ្នកដែលគ្មានសមត្ថភាពដែរឬ?) ហើយពួកគេបានយកព្រះនានាមកធ្វើជាដៃគូជាមួយអល់ឡោះ ។ ចូរអ្នកពោលថា: ចូរពួកអ្នករៀបរាប់ឈ្មោះ( លក្ខណៈ) របស់ពួកគេ( ព្រះនានា) ឬមួយក៏ពួកអ្នកប្រាប់ទ្រង់នូវអ្វីដែលទ្រង់មិនបានដឹងនៅលើផែនដីនេះ? ឬគ្រាន់តែស្ដែងចេញដោយពាក្យសំដីប៉ុណ្ណោះទេឬ? ផ្ទុយទៅវិញវា( ស្ហៃតន) បានលំអចំពោះពួកដែលប្រឆាំងនោះនូវឧបាយកលរបស់ពួកគេ ហើយវាបានរារាំងពួកគេអំពីមាគ៌ាអល់ឡោះ ។ ហើយអ្នកណាដែលអល់ឡោះធ្វើឱ្យគេវង្វេងនោះ គឺគ្មានអ្នកចង្អុលបង្ហាញសម្រាប់គេឡើយ ។

أَفَمَنْ هُوَ قَآئِمٌ عَلَىٰ كُلِّ نَفْسٍۭ بِمَا كَسَبَتْ ۗ
وَجَعَلُوا۟ لِلَّهِ شُرَكَآءَ قُلْ سَمُّوهُمْ ۚ أَمْ تُنَبِّـُٔونَهُۥ
بِمَا لَا يَعْلَمُ فِى ٱلْأَرْضِ أَم بِظَـٰهِرٍ مِّنَ
ٱلْقَوْلِ ۗ بَلْ زُيِّنَ لِلَّذِينَ كَفَرُوا۟ مَكْرُهُمْ
وَصُدُّوا۟ عَنِ ٱلسَّبِيلِ ۗ وَمَن يُضْلِلِ ٱللَّهُ فَمَا
لَهُۥ مِنْ هَادٍ ﴿٣٣﴾

៣៤-ពួកគេនឹងទទួលទណ្ឌកម្មក្នុងការរស់នៅក្នុងលោកិយ ហើយទារុណកម្មថ្ងៃបរលោកវិញធ្ងន់ធ្ងរជាងនេះទៅទៀត ។ ហើយគ្មានអ្នកណាម្នាក់អាចការពារពួកគេពីទារុណកម្មរបស់អល់ឡោះបានឡើយ ។

لَّهُمْ عَذَابٌ فِى ٱلْحَيَوٰةِ ٱلدُّنْيَا ۖ وَلَعَذَابُ
ٱلْـَٔاخِرَةِ أَشَقُّ ۖ وَمَا لَهُم مِّنَ ٱللَّهِ مِن
وَاقٍ ﴿٣٤﴾

៣៥-លក្ខណៈនៃឋានសួគ៌ដែលគេបានសន្យាចំពោះបណ្ដាអ្នកដែលកោតខ្លាចអល់ឡោះនោះ គឺមានទន្លេជាច្រើនហូរពីក្រោមវាដែលផលានុផលនិងម្លប់របស់វាមានជារៀងរហូត ។ នោះគឺជាលទ្ធផលចុងក្រោយសម្រាប់បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ ។ រីឯលទ្ធផលចុងក្រោយរបស់ពួកដែលប្រឆាំងនោះគឺនរក ។

۞ مَّثَلُ ٱلْجَنَّةِ ٱلَّتِى وُعِدَ ٱلْمُتَّقُونَ ۖ تَجْرِى
مِن تَحْتِهَا ٱلْأَنْهَـٰرُ ۖ أُكُلُهَا دَآئِمٌ وَظِلُّهَا ۚ تِلْكَ
عُقْبَى ٱلَّذِينَ ٱتَّقَوا۟ ۖ وَّعُقْبَى ٱلْكَـٰفِرِينَ
ٱلنَّارُ ﴿٣٥﴾

៣៦-ហើយបណ្ដាអ្នកដែលយើងបានប្រទានឱ្យពួកគេនូវគម្ពីរ

وَٱلَّذِينَ ءَاتَيْنَـٰهُمُ ٱلْكِتَـٰبَ يَفْرَحُونَ

(តាវរ៉ត អ៊ីញជីល) ដោយពួកគេរីករាយនឹងអ្វីដែលគេបានបញ្ចុះឱ្យអ្នក ។ ហើយក្នុងចំណោមក្រុមទាំងនោះ មានអ្នកដែលបដិសេធអំពីវា(គម្ពីរគួរអាន) ។ ចូរអ្នកពោលថា: ពិតប្រាកដណាស់ ខ្ញុំត្រូវបានគេបញ្ជាឱ្យគោរពសក្ការៈចំពោះអល់ឡោះ ហើយមិនឱ្យខ្ញុំធ្វើស្ហ៊ីរិកចំពោះទ្រង់ឡើយ ។ ខ្ញុំអំពាវនាវ(មនុស្សលោក) ទៅចំពោះទ្រង់តែមួយគត់ ហើយកន្លែងវិលត្រឡប់របស់ខ្ញុំក៏ទៅចំពោះទ្រង់ដែរ ។

بِمَآ أُنزِلَ إِلَيۡكَۖ وَمِنَ ٱلۡأَحۡزَابِ مَن يُنكِرُ بَعۡضَهُۥۚ قُلۡ إِنَّمَآ أُمِرۡتُ أَنۡ أَعۡبُدَ ٱللَّهَ وَلَآ أُشۡرِكَ بِهِۦٓۚ إِلَيۡهِ أَدۡعُواْ وَإِلَيۡهِ مَـَٔابِ ٣٦

៣៧-ដូច្នោះហើយ យើងបានបញ្ចុះវា(គម្ពីរគួរអាន) ជាបញ្ញត្តិតាមភាសាអារ៉ាប់ ។ តែប្រសិនបើអ្នក(មូហាំម៉ាត់) បានធ្វើតាមទំនើងចិត្តរបស់ពួកគេក្រោយពីចំណេះដឹងបានមកដល់អ្នក ហើយនោះ អ្នកគ្មានអ្នកគាំពារណាក្រៅពីអល់ឡោះឡើយ ហើយក៏គ្មានអ្នកណាការពារ(ពីទារុណកម្មរបស់ទ្រង់) ដែរ ។

وَكَذَٰلِكَ أَنزَلۡنَٰهُ حُكۡمًا عَرَبِيّٗاۚ وَلَئِنِ ٱتَّبَعۡتَ أَهۡوَآءَهُم بَعۡدَمَا جَآءَكَ مِنَ ٱلۡعِلۡمِ مَا لَكَ مِنَ ٱللَّهِ مِن وَلِيّٖ وَلَا وَاقٖ ٣٧

៣៨-ហើយជាការពិតណាស់ យើងបានបញ្ជូនអ្នកនាំសារជាច្រើនមុនអ្នក(មូហាំម៉ាត់) ហើយយើងបានរៀបចំឱ្យពួកគេមានភរិយា និងកូនចៅ ។ ហើយគ្មានអ្នកនាំសារណាម្នាក់ដែលអាចនាំមកនូវមុជីហ្សាត់បានឡើយ លុះត្រាតែមានការអនុញ្ញាតពីអល់ឡោះ ។ សម្រាប់រាល់ៗហេតុការណ៍ត្រូវកំណត់រួចជាស្រេច ។

وَلَقَدۡ أَرۡسَلۡنَا رُسُلٗا مِّن قَبۡلِكَ وَجَعَلۡنَا لَهُمۡ أَزۡوَٰجٗا وَذُرِّيَّةٗۚ وَمَا كَانَ لِرَسُولٍ أَن يَأۡتِيَ بِـَٔايَةٍ إِلَّا بِإِذۡنِ ٱللَّهِۗ لِكُلِّ أَجَلٖ كِتَابٞ ٣٨

៣៩-អល់ឡោះនឹងលុបបំបាត់និងរក្សាទុកនូវអ្វីដែលទ្រង់មានចេតនា ហើយអំមុលគីតាប(ឡាវហុលម៉ះហ្វូស) នោះមាននៅជាមួយទ្រង់ ។

يَمۡحُواْ ٱللَّهُ مَا يَشَآءُ وَيُثۡبِتُۖ وَعِندَهُۥٓ أُمُّ ٱلۡكِتَٰبِ ٣٩

៤០-ហើយទោះបីជាយើងនឹងបង្ហាញអ្នក(មូហាំម៉ាត់) មួយចំនួន(នៃទណ្ឌកម្ម) ដែលយើងសន្យាចំពោះពួកគេ ឬក៏យើងនឹងយកជីវិតរបស់អ្នក(មុនការកើតឡើងនូវទណ្ឌកម្ម) ពិតមែនក៏ដោយ ក៏តួនាទីរបស់អ្នកគ្រាន់តែជាអ្នកផ្សព្វផ្សាយប៉ុណ្ណោះ ។ រីឯការជំនុំជំរះគឺជាតួនាទីរបស់យើង ។

وَإِن مَّا نُرِيَنَّكَ بَعۡضَ ٱلَّذِي نَعِدُهُمۡ أَوۡ نَتَوَفَّيَنَّكَ فَإِنَّمَا عَلَيۡكَ ٱلۡبَلَٰغُ وَعَلَيۡنَا ٱلۡحِسَابُ ٤٠

៤១-តើពួកគេ(ពួកប្រឆាំង) មិនបានឃើញទេឬថា ពិតប្រាកដណាស់ យើងរំដោះយកទឹកដីឱ្យ(អ្នកមានជំនឿ) ដោយយើងកាត់បន្ថយវា(ពីពួកប្រឆាំង) បន្តិចម្តងៗនៅគ្រប់ទិសទីនោះ ។ ហើយអល់ឡោះជាអ្នកកាត់សេចក្តីដោយគ្មាននរណាម្នាក់អាចបដិសេធ

أَوَلَمۡ يَرَوۡاْ أَنَّا نَأۡتِي ٱلۡأَرۡضَ نَنقُصُهَا مِنۡ أَطۡرَافِهَاۚ وَٱللَّهُ يَحۡكُمُ لَا مُعَقِّبَ لِحُكۡمِهِۦۚ وَهُوَ سَرِيعُ ٱلۡحِسَابِ ٤١

نَوَقَدْ مَكَرَ ٱلَّذِينَ مِن قَبْلِهِمْ فَلِلَّهِ ٱلْمَكْرُ جَمِيعًا ۖ يَعْلَمُ مَا تَكْسِبُ كُلُّ نَفْسٍ ۗ وَسَيَعْلَمُ ٱلْكُفَّٰرُ لِمَنْ عُقْبَى ٱلدَّارِ ﴿٤٢﴾

وَيَقُولُ ٱلَّذِينَ كَفَرُوا۟ لَسْتَ مُرْسَلًا ۚ قُلْ كَفَىٰ بِٱللَّهِ شَهِيدًۢا بَيْنِى وَبَيْنَكُمْ وَمَنْ عِندَهُۥ عِلْمُ ٱلْكِتَٰبِ ﴿٤٣﴾

នូវការសម្រេចរបស់ទ្រង់បានឡើយ ។ ហើយទ្រង់ជាអ្នកជំនុំជំរះយ៉ាងលឿនបំផុត ។

៤២-ហើយជាការពិតណាស់ ពួកជំនាន់មុនពួកគេបានប្រើឧបាយកលបោកប្រាស់(អ្នកនាំសារ) ប៉ុន្តែរាល់ឧបាយកលទាំងឡាយគឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ទ្រង់ដឹងនូវអ្វីៗដែលបុគ្គលគ្រប់រូបប្រព្រឹត្ត ។ ហើយពួកប្រឆាំងនឹងដឹងថា តើនរណានឹងទទួលលទ្ធផលចុងក្រោយដ៏ប្រសើរនោះ?

៤៣-ហើយពួកដែលប្រឆាំងបាននិយាយថា: អ្នកមិនមែនជាអ្នកនាំសារទេ ។ ចូរអ្នក(មូហាំម៉ាត់) តបវិញថា: គ្រប់គ្រាន់ហើយអល់ឡោះជាសាក្សីរវាងខ្ញុំនិងពួកអ្នក ហើយ(ក៏គ្រប់គ្រាន់ដែរ) អ្នកដែលមានចំណេះដឹងខាងគម្ពីរ[1] ។

## سورة إبراهيم

## ជំពូកអ៊ីព្រហ៊ីម

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់ ។

الٓر ۚ كِتَٰبٌ أَنزَلْنَٰهُ إِلَيْكَ لِتُخْرِجَ ٱلنَّاسَ مِنَ ٱلظُّلُمَٰتِ إِلَى ٱلنُّورِ بِإِذْنِ رَبِّهِمْ إِلَىٰ صِرَٰطِ ٱلْعَزِيزِ ٱلْحَمِيدِ ﴿١﴾

១-អាលីហ្វ ឡាម រ៉ ។ គម្ពីរ(គួរអាន)ដែលយើងបានបញ្ចុះឱ្យអ្នក(មូហាំម៉ាត់) ដើម្បីឱ្យអ្នកដឹកនាំមនុស្សលោកចេញពីភាពងងឹត(គ្មានជំនឿ) ទៅរកភាពមានពន្លឺ(មានជំនឿ) តាមការអនុញ្ញាតពីម្ចាស់របស់ពួកគេទៅរកមាគ៌ារបស់ទ្រង់ដែលមហាខ្លាំងពូកែ ជាទីកោតសរសើរបំផុត ។

ٱللَّهِ ٱلَّذِى لَهُۥ مَا فِى ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ ۗ وَوَيْلٌ لِّلْكَٰفِرِينَ مِنْ عَذَابٍ شَدِيدٍ ﴿٢﴾

២-អល់ឡោះជាម្ចាស់ដែលគ្រប់គ្រងនូវអ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលមាននៅលើផែនដី ។ ហើយភាពអន្តរាយនោះ គឺសម្រាប់ពួកដែលគ្មានជំនឿដែលជាការដាក់ទារុណកម្មមួយដ៏ធ្ងន់ធ្ងរ ។

ٱلَّذِينَ يَسْتَحِبُّونَ ٱلْحَيَوٰةَ ٱلدُّنْيَا عَلَى ٱلْءَاخِرَةِ وَيَصُدُّونَ عَن سَبِيلِ ٱللَّهِ وَيَبْغُونَهَا عِوَجًا ۚ أُو۟لَٰٓئِكَ فِى ضَلَٰلٍۭ بَعِيدٍ ﴿٣﴾

៣-ពួកដែលស្រឡាញ់ការរស់នៅក្នុងលោកិយជាងថ្ងៃបរលោក ហើយពួកគេរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ ហើយពួកគេចង់ធ្វើឱ្យមាគ៌ានោះវៀចវេរ ។ ពួកទាំងនោះស្ថិតក្នុងភាពវង្វេងដ៏ឆ្ងាយ(ពីការពិត) ។

---

[1] ១-ដូចជាអាប់ឌុលឡោះកូនរបស់សាឡាម ក្រុមយ៉ាហ៊ូទី និងណាសរ៉នីជាច្រើនទៀត ។

وَمَآ أَرۡسَلۡنَا مِن رَّسُولٍ إِلَّا بِلِسَانِ قَوۡمِهِۦ
لِيُبَيِّنَ لَهُمۡۖ فَيُضِلُّ ٱللَّهُ مَن يَشَآءُ وَيَهۡدِي
مَن يَشَآءُۚ وَهُوَ ٱلۡعَزِيزُ ٱلۡحَكِيمُ ٤

៤-ហើយយើងមិនបានបញ្ជូនអ្នកនាំសារណាម្នាក់ លើកលែងតែតាមភាសានៃក្រុមរបស់គេប៉ុណ្ណោះ ដើម្បីពន្យល់យ៉ាងច្បាស់ដល់ពួកគេ។ ហើយអល់ឡោះធ្វើឱ្យវង្វេងចំពោះអ្នកណាដែលទ្រង់មានចេតនា ហើយទ្រង់ចង្អុលបង្ហាញចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

وَلَقَدۡ أَرۡسَلۡنَا مُوسَىٰ بِـَٔايَٰتِنَآ أَنۡ أَخۡرِجۡ
قَوۡمَكَ مِنَ ٱلظُّلُمَٰتِ إِلَى ٱلنُّورِ وَذَكِّرۡهُم
بِأَيَّىٰمِ ٱللَّهِۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ لِّكُلِّ
صَبَّارٖ شَكُورٖ ٥

៥-ហើយតាមការពិតយើងបានបញ្ជូនមូសាជាមួយនឹងមុជីហ្សាត់នានារបស់យើង(ទៅកាន់អំបូរអ៊ីស្រាអែល ព្រមទាំងយើងបញ្ជាថា) ចូរអ្នក(មូសា)ដឹកនាំក្រុមរបស់អ្នកចេញពីភាពងងឹតទៅរកភាពមានពន្លឺ ហើយចូរអ្នករំលឹកពួកគេនូវថ្ងៃៗ(នៀកម៉ាត់និងទណ្ឌកម្ម)របស់អល់ឡោះ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះជាបណ្ដាភស្តុតាងសម្រាប់រាល់អ្នកដែលអត់ធ្មត់អ្នកដែលដឹងគុណ។

وَإِذۡ قَالَ مُوسَىٰ لِقَوۡمِهِ ٱذۡكُرُواْ نِعۡمَةَ ٱللَّهِ
عَلَيۡكُمۡ إِذۡ أَنجَىٰكُم مِّنۡ ءَالِ فِرۡعَوۡنَ
يَسُومُونَكُمۡ سُوٓءَ ٱلۡعَذَابِ وَيُذَبِّحُونَ
أَبۡنَآءَكُمۡ وَيَسۡتَحۡيُونَ نِسَآءَكُمۡۚ وَفِي
ذَٰلِكُم بَلَآءٞ مِّن رَّبِّكُمۡ عَظِيمٞ ٦

៦-ហើយ(ចូរចងចាំ)នៅពេលដែលមូសាបានពោលទៅកាន់ក្រុមរបស់គាត់ថាៈ ចូរពួកអ្នករំឭកនូវនៀកម៉ាត់របស់អល់ឡោះដែលបានផ្ដល់ឱ្យពួកអ្នកនៅពេលដែលទ្រង់បានរំដោះពួកអ្នកឱ្យរួចផុតពីបក្សពួកហ្វៀរអោនដែលពួកគេឱ្យពួកអ្នកភ្លក្សរសជាតិទារុណកម្មយ៉ាងព្រៃផ្សៃ ដោយសម្លាប់កូនប្រុសរបស់ពួកអ្នក ហើយទុកជីវិតកូនស្រីរបស់ពួកអ្នក។ ហើយនៅក្នុងព្រឹត្តិការណ៍នោះគឺជាការសាកល្បងមួយយ៉ាងធំធេងពីម្ចាស់របស់ពួកអ្នក។

وَإِذۡ تَأَذَّنَ رَبُّكُمۡ لَئِن شَكَرۡتُمۡ
لَأَزِيدَنَّكُمۡۖ وَلَئِن كَفَرۡتُمۡ إِنَّ عَذَابِي
لَشَدِيدٞ ٧

៧-ហើយ(ចូរចងចាំ)នៅពេលដែលម្ចាស់របស់ពួកអ្នកបានប្រកាសថាៈ ប្រាកដណាស់ ប្រសិនបើពួកអ្នកដឹងគុណ(នូវនៀកម៉ាត់របស់យើង) យើងពិតជានឹងបន្ថែម(ការប្រោសប្រទាន)ដល់ពួកអ្នកទៀត។ ប៉ុន្តែប្រសិនបើពួកអ្នករមិលគុណវិញនោះ ពិតប្រាកដណាស់ទារុណកម្មរបស់យើងគឺធ្ងន់ធ្ងរបំផុត។

وَقَالَ مُوسَىٰٓ إِن تَكۡفُرُوٓاْ أَنتُمۡ وَمَن فِي ٱلۡأَرۡضِ
جَمِيعٗا فَإِنَّ ٱللَّهَ لَغَنِيٌّ حَمِيدٌ ٨

៨-ហើយមូសាបានពោលថាៈ ប្រសិនបើពួកអ្នកនិងអ្នកដែលនៅលើផែនដីទាំងអស់ប្រឆាំង(នឹងនៀកម៉ាត់របស់អល់ឡោះនោះក៏ទ្រង់មិនត្រូវការនូវការដឹងគុណរបស់ពួកអ្នកដែរ) ហើយពិតប្រាកដណាស់ អល់ឡោះមហាមានលើសលប់ ដែលជាទីកោត

សរសើរបំផុត ។

៩-តើដំណឹងនៃពួកជំនាន់មុនពួកអ្នក គឺក្រុមរបស់នូហ អាដ និងសាមូដ និងពួកជំនាន់ក្រោយពួកគេដែលគ្មានអ្នកណាម្នាក់អាចដឹងពីចំនួនពួកគេក្រៅពីអល់ឡោះមិនបានមកដល់ពួកអ្នកទេឬ? បណ្ដាអ្នកនាំសាររបស់ពួកគេបាននាំមកនូវភស្ដុតាងយ៉ាងច្បាស់លាស់ជាច្រើនដល់ពួកគេ ប៉ុន្ដែពួកគេបានយកដៃរបស់ពួកគេមកដាក់ក្នុងមាត់របស់ពួកគេ(ខាំដោយកំហឹង) ហើយពួកគេបាននិយាយថា: ពិតប្រាកដណាស់ ពួកយើងមិនជឿនូវអ្វីដែលគេបានបញ្ជូនវាមកជាមួយពួកអ្នកឡើយ ។ ហើយពិតប្រាកដណាស់ ពួកយើងមានការសង្ស័យយ៉ាងខ្លាំងអំពីអ្វីដែលពួកអ្នកអំពាវនាវពួកយើងទៅរកវា(ភាពមានជំនឿ)នោះ ។

أَلَمۡ يَأۡتِكُمۡ نَبَؤُاْ ٱلَّذِينَ مِن قَبۡلِكُمۡ قَوۡمِ
نُوحٖ وَعَادٖ وَثَمُودَۛ وَٱلَّذِينَ مِنۢ بَعۡدِهِمۡۛ
لَا يَعۡلَمُهُمۡ إِلَّا ٱللَّهُۚ جَآءَتۡهُمۡ رُسُلُهُم
بِٱلۡبَيِّنَٰتِ فَرَدُّوٓاْ أَيۡدِيَهُمۡ فِيٓ أَفۡوَٰهِهِمۡ وَقَالُوٓاْ
إِنَّا كَفَرۡنَا بِمَآ أُرۡسِلۡتُم بِهِۦ وَإِنَّا لَفِي شَكّٖ
مِّمَّا تَدۡعُونَنَآ إِلَيۡهِ مُرِيبٖ ٩

១០-បណ្ដាអ្នកនាំសាររបស់ពួកគេបានពោលថា: តើ(ពួកអ្នក) មានការសង្ស័យចំពោះអល់ឡោះដែលជាអ្នកបង្កើតមេឃជាច្រើនជាន់ និងផែនដីនោះឬ? ទ្រង់អំពាវនាវពួកអ្នក(ឱ្យមានជំនឿ)ដើម្បីទ្រង់នឹងអភ័យទោសដល់ពួកអ្នកនូវបាបកម្មទាំងឡាយរបស់ពួកអ្នក ហើយទ្រង់បានពន្យារពេលពួកអ្នករហូតដល់ពេលមួយដែលត្រូវបានកំណត់ ។ ពួកគេ(ពួកប្រឆាំង)បាននិយាយថា: ពួកអ្នកគ្រាន់តែជាមនុស្សធម្មតាដូចពួកយើងដែលពួកអ្នកចង់រារាំងពួកយើងនូវអ្វីដែលជីដូនជីតារបស់ពួកយើងធ្លាប់បានគោរពសក្ការៈប៉ុណ្ណោះ ។ ដូច្នេះ ចូរពួកអ្នកផ្ដល់ភស្ដុតាងយ៉ាងច្បាស់លាស់ដល់ពួកយើងមក!

۞ قَالَتۡ رُسُلُهُمۡ أَفِي ٱللَّهِ شَكّٞ فَاطِرِ
ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ يَدۡعُوكُمۡ لِيَغۡفِرَ
لَكُم مِّن ذُنُوبِكُمۡ وَيُؤَخِّرَكُمۡ إِلَىٰٓ أَجَلٖ
مُّسَمّٗىۚ قَالُوٓاْ إِنۡ أَنتُمۡ إِلَّا بَشَرٞ مِّثۡلُنَا تُرِيدُونَ
أَن تَصُدُّونَا عَمَّا كَانَ يَعۡبُدُ ءَابَآؤُنَا
فَأۡتُونَا بِسُلۡطَٰنٖ مُّبِينٖ ١٠

១១-បណ្ដាអ្នកនាំសាររបស់ពួកគេបានតបនឹងពួកគេវិញថា: ពួកយើងគ្រាន់តែជាមនុស្សធម្មតាដូចពួកអ្នកដែរ ប៉ុន្ដែអល់ឡោះលើកតម្កើងចំពោះអ្នកណាដែលទ្រង់មានចេតនាអំពីបណ្ដាខ្ញុំរបស់ទ្រង់ ។ ហើយសម្រាប់ពួកយើងមិនអាចផ្ដល់ឱ្យពួកអ្នកនូវភស្ដុតាងណាមួយបានឡើយលុះត្រាតែមានការអនុញ្ញាតពីអល់ឡោះ ។ ហើយបណ្ដាអ្នកដែលមានជំនឿត្រូវប្រគល់ការទុកចិត្តចំពោះអល់ឡោះតែមួយគត់ ។

قَالَتۡ لَهُمۡ رُسُلُهُمۡ إِن نَّحۡنُ إِلَّا بَشَرٞ مِّثۡلُكُمۡ
وَلَٰكِنَّ ٱللَّهَ يَمُنُّ عَلَىٰ مَن يَشَآءُ مِنۡ عِبَادِهِۦۖ
وَمَا كَانَ لَنَآ أَن نَّأۡتِيَكُم بِسُلۡطَٰنٍ إِلَّا بِإِذۡنِ
ٱللَّهِۚ وَعَلَى ٱللَّهِ فَلۡيَتَوَكَّلِ ٱلۡمُؤۡمِنُونَ ١١

១២-ហើយចុះហេតុអ្វីបានជាពួកយើងមិនប្រគល់ការទុកចិត្ត

وَمَا لَنَآ أَلَّا نَتَوَكَّلَ عَلَى ٱللَّهِ وَقَدۡ هَدَىٰنَا

سُبُلَنَا ۚ وَلَنَصْبِرَنَّ عَلَىٰ مَآ ءَاذَيْتُمُونَا ۚ وَعَلَى ٱللَّهِ فَلْيَتَوَكَّلِ ٱلْمُتَوَكِّلُونَ ﴿١٢﴾

ចំពោះអល់ឡោះ ខណៈដែលទ្រង់ពិតជាបានចង្អុលបង្ហាញផ្លូវដល់ពួកយើងនោះ? ហើយពួកយើងត្រូវតែអត់ធ្មត់ទៅលើអ្វីដែលពួកអ្នកបានធ្វើបាបពួកយើង ។ ហើយបណ្តាអ្នកដែលទុកចិត្តត្រូវប្រគល់ការទុកចិត្តចំពោះអល់ឡោះតែមួយគត់ ។

وَقَالَ ٱلَّذِينَ كَفَرُوا۟ لِرُسُلِهِمْ لَنُخْرِجَنَّكُم مِّنْ أَرْضِنَآ أَوْ لَتَعُودُنَّ فِى مِلَّتِنَا ۖ فَأَوْحَىٰٓ إِلَيْهِمْ رَبُّهُمْ لَنُهْلِكَنَّ ٱلظَّٰلِمِينَ ﴿١٣﴾

១៣-ហើយពួកដែលប្រឆាំងបាននិយាយទៅកាន់បណ្តាអ្នកនាំសាររបស់ពួកគេថា: យើងពិតជានឹងបណ្តេញពួកអ្នកចេញពីទឹកដីរបស់យើង ឬពួកអ្នកត្រូវតែត្រឡប់មកកាន់សាសនារបស់ពួកយើងវិញ ។ ពេលនោះម្ចាស់របស់ពួកគេបានផ្តល់វ៉ាហ៊ីទៅកាន់ពួកគេថា: យើងប្រាកដជានឹងបំផ្លិចបំផ្លាញពួកដែលបំពានជាមិនខាន ។

وَلَنُسْكِنَنَّكُمُ ٱلْأَرْضَ مِنۢ بَعْدِهِمْ ۚ ذَٰلِكَ لِمَنْ خَافَ مَقَامِى وَخَافَ وَعِيدِ ﴿١٤﴾

១៤-ហើយយើងពិតជានឹងឱ្យពួកអ្នក( អ្នកនាំសារ) រស់នៅលើទឹកដីនេះក្រោយពី( ភាពវិនាសរបស់) ពួកគេ ។ នោះគឺសម្រាប់អ្នកណាដែលភ័យខ្លាចកន្លែង( កាត់សេចក្តី) របស់យើង ហើយនិងភ័យខ្លាចការព្រមាន( ទណ្ឌកម្ម) របស់យើង ។

وَٱسْتَفْتَحُوا۟ وَخَابَ كُلُّ جَبَّارٍ عَنِيدٍ ﴿١٥﴾

១៥-ហើយពួកគេ( អ្នកនាំសារ) បានសុំ( ពីអល់ឡោះ) ឱ្យមានជ័យជំនះ( លើសត្រូវរបស់ពួកគេ) ហើយរាល់អ្នកដែលក្អេងក្អាងចចេសរឹងរូសបានបរាជ័យ ។

مِّن وَرَآئِهِۦ جَهَنَّمُ وَيُسْقَىٰ مِن مَّآءٍ صَدِيدٍ ﴿١٦﴾

១៦-នៅខាងមុខគេ គឺនរកជើហាន់ណាំ ហើយគេនឹងឱ្យអ្នកនោះផឹកនូវទឹកខ្ទុះឈាម ។

يَتَجَرَّعُهُۥ وَلَا يَكَادُ يُسِيغُهُۥ وَيَأْتِيهِ ٱلْمَوْتُ مِن كُلِّ مَكَانٍ وَمَا هُوَ بِمَيِّتٍ ۖ وَمِن وَرَآئِهِۦ عَذَابٌ غَلِيظٌ ﴿١٧﴾

១៧-គេផឹកខ្ទុះនោះដែរ ប៉ុន្តែគេស្ទើរតែលេបវាមិនចូល ។ ( ការឈឺចាប់) នៃសេចក្តីស្លាប់មកដល់គេគ្រប់ទីកន្លែង( នៃខ្លួនប្រាណ) តែគេមិនស្លាប់ឡើយ ។ ហើយនៅខាងមុខគេគឺទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត ។

مَّثَلُ ٱلَّذِينَ كَفَرُوا۟ بِرَبِّهِمْ ۖ أَعْمَٰلُهُمْ كَرَمَادٍ ٱشْتَدَّتْ بِهِ ٱلرِّيحُ فِى يَوْمٍ عَاصِفٍ ۖ لَّا يَقْدِرُونَ مِمَّا كَسَبُوا۟ عَلَىٰ شَىْءٍ ۚ ذَٰلِكَ هُوَ ٱلضَّلَٰلُ ٱلْبَعِيدُ ﴿١٨﴾

១៨-ការប្រៀបធៀបរបស់ពួកដែលបានប្រឆាំងនឹងម្ចាស់របស់ពួកគេ គឺទង្វើរបស់ពួកគេប្រៀបដូចជាផេះដែលត្រូវបានខ្យល់បក់បោកយ៉ាងខ្លាំងនៅថ្ងៃដែលមានព្យុះសង្ឃរា ។ ពួកគេមិនអាចទទួលបានអ្វីសោះឡើយអំពីអ្វីដែលពួកគេបានធ្វើកន្លងមក ។ នោះវាជាការវង្វេងដ៏សែនឆ្ងាយ ។

أَلَمْ تَرَ أَنَّ ٱللَّهَ خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ بِٱلْحَقِّ ۚ إِن يَشَأْ يُذْهِبْكُمْ وَيَأْتِ بِخَلْقٍ جَدِيدٍ ﴿١٩﴾

១៩-តើអ្នកមិនបានឃើញទេឬ អល់ឡោះពិតជាបានបង្កើតមេឃជាច្រើនជាន់ និងផែនដីយ៉ាងពិតប្រាកដនោះ? ប្រសិនបើទ្រង់មានចេតនា ទ្រង់នឹងធ្វើឱ្យពួកអ្នកវិនាស ហើយទ្រង់នឹងបង្កើតអ្នកថ្មីមកជំនួសវិញ។

وَمَا ذَٰلِكَ عَلَى ٱللَّهِ بِعَزِيزٍ ﴿٢٠﴾

២០-ហើយរឿងនោះ មិនមែនជារឿងដែលលំបាកចំពោះអល់ឡោះឡើយ។

وَبَرَزُوا۟ لِلَّهِ جَمِيعًا فَقَالَ ٱلضُّعَفَٰٓؤُا۟ لِلَّذِينَ ٱسْتَكْبَرُوٓا۟ إِنَّا كُنَّا لَكُمْ تَبَعًا فَهَلْ أَنتُم مُّغْنُونَ عَنَّا مِنْ عَذَابِ ٱللَّهِ مِن شَىْءٍ ۚ قَالُوا۟ لَوْ هَدَىٰنَا ٱللَّهُ لَهَدَيْنَٰكُمْ ۖ سَوَآءٌ عَلَيْنَآ أَجَزِعْنَآ أَمْ صَبَرْنَا مَا لَنَا مِن مَّحِيصٍ ﴿٢١﴾

២១-ហើយពួកគេទាំងអស់បានបង្ហាញខ្លួនចំពោះមុខអល់ឡោះ (នៅថ្ងៃបរលោក) ហើយពួកដែលទន់ខ្សោយបាននិយាយទៅកាន់ពួកដែលក្រអឺតក្រទមថា: ពិតប្រាកដណាស់ ពួកយើងធ្លាប់បានធ្វើតាមពួកអ្នក។ ដូច្នេះ តើពួកអ្នកអាចការពារពួកយើងអំពីទារុណកម្មរបស់អល់ឡោះបានដែរឬទេ? ពួកគេបានតបវិញថា: ប្រសិនបើអល់ឡោះបានចង្អុលបង្ហាញដល់ពួកយើងនោះ ពួកយើងពិតជាចង្អុលបង្ហាញដល់ពួកអ្នកជាមិនខាន។ វាមិនខុសគ្នាទេចំពោះពួកយើង ទោះបីជាពួកយើងតួញត្អែរ ឬអត់ធ្មត់យ៉ាងណាក៏ដោយ ក៏ពួកយើងនៅតែគ្មានកន្លែងគេចផុតដែរ។

وَقَالَ ٱلشَّيْطَٰنُ لَمَّا قُضِىَ ٱلْأَمْرُ إِنَّ ٱللَّهَ وَعَدَكُمْ وَعْدَ ٱلْحَقِّ وَوَعَدتُّكُمْ فَأَخْلَفْتُكُمْ ۖ وَمَا كَانَ لِىَ عَلَيْكُم مِّن سُلْطَٰنٍ إِلَّآ أَن دَعَوْتُكُمْ فَٱسْتَجَبْتُمْ لِى ۖ فَلَا تَلُومُونِى وَلُومُوٓا۟ أَنفُسَكُم ۖ مَّآ أَنَا۠ بِمُصْرِخِكُمْ وَمَآ أَنتُم بِمُصْرِخِىَّ ۖ إِنِّى كَفَرْتُ بِمَآ أَشْرَكْتُمُونِ مِن قَبْلُ ۗ إِنَّ ٱلظَّٰلِمِينَ لَهُمْ عَذَابٌ أَلِيمٌ ﴿٢٢﴾

២២-ហើយស្ហៃតនបាននិយាយនៅពេលដែលត្រូវបានគេកាត់សេចក្តីថា : ពិតប្រាកដណាស់ អល់ឡោះបានសន្យាជាមួយពួកអ្នកគឺជាការសន្យាមួយដែលពិតប្រាកដ។ ចំណែកខ្ញុំបានសន្យាជាមួយពួកអ្នកមែន តែខ្ញុំបានក្បត់ពាក្យសន្យាជាមួយពួកអ្នក។ ហើយខ្ញុំគ្មានអំណាចអ្វីចំពោះពួកអ្នកក្រៅពីបានអំពាវនាវពួកអ្នក(ឱ្យធ្វើខុស)ឡើយ តែពួកអ្នកបានឆ្លើយតបចំពោះខ្ញុំ។ ហេតុនេះ ចូរពួកអ្នកកុំបន្ទោសខ្ញុំឱ្យសោះ តែពួកអ្នកត្រូវបន្ទោសខ្លួនឯងវិញ។ ខ្ញុំមិនមែនជាអ្នកជួយពួកអ្នកទេ ហើយពួកអ្នកក៏មិនមែនជាអ្នកជួយខ្ញុំដែរ។ ពិតប្រាកដណាស់ ខ្ញុំបានដកខ្លួនពីអ្វីដែលពួកអ្នកបានយកខ្ញុំធ្វើជាស្ហ៊ីរិកកាលពីមុន។ ពិតប្រាកដណាស់ ពួកដែលបំពានពួកគេនឹងទទួលទារុណកម្មដ៏ឈឺចាប់បំផុត។

وَأُدْخِلَ ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ جَنَّٰتٍ تَجْرِى مِن تَحْتِهَا ٱلْأَنْهَٰرُ خَٰلِدِينَ فِيهَا

២៣-ហើយគេនឹងបញ្ចូលបណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវទៅក្នុងឋានសួគ៌នានា ដែលមានទន្លេជាច្រើន

بِإِذْنِ رَبِّهِمْ ۖ تَحِيَّتُهُمْ فِيهَا سَلَٰمٌ ﴿٢٣﴾

ហូរពីក្រោមវា ដោយពួកគេរស់នៅក្នុងនោះជាអមតៈដោយមានការអនុញ្ញាតពីម្ចាស់របស់ពួកគេ ។ ការស្វាគមន៍សម្រាប់ពួកគេនៅក្នុងនោះគឺការជូនពរឱ្យមានសន្តិភាព( ពីអល់ឡោះ ម៉ាឡាអ៊ីកាត់ និងអ្នកមានជំនឿ ) ។

أَلَمْ تَرَ كَيْفَ ضَرَبَ ٱللَّهُ مَثَلًا كَلِمَةً طَيِّبَةً كَشَجَرَةٍ طَيِّبَةٍ أَصْلُهَا ثَابِتٌ وَفَرْعُهَا فِى ٱلسَّمَآءِ ﴿٢٤﴾

២៤-តើអ្នក( មូហាំម៉ាត់ ) មិនបានឃើញទេឬ អល់ឡោះបានលើកយកឧទាហរណ៍យ៉ាងដូចម្តេចចំពោះពាក្យសំដីដែលល្អប្រៀបដូចជាដើមឈើមួយដែលល្អដែលឫសរបស់វារឹងមាំ ហើយមែកធាងរបស់វាចាក់ឆ្ពោះទៅលើមេឃនោះ?

تُؤْتِىٓ أُكُلَهَا كُلَّ حِينٍۭ بِإِذْنِ رَبِّهَا ۗ وَيَضْرِبُ ٱللَّهُ ٱلْأَمْثَالَ لِلنَّاسِ لَعَلَّهُمْ يَتَذَكَّرُونَ ﴿٢٥﴾

២៥-វា( ដើមឈើនោះ ) នឹងផ្តល់ផលានុផលគ្រប់ពេលវេលាដោយមានការអនុញ្ញាតពីម្ចាស់របស់វា ។ ហើយអល់ឡោះលើកយកឧទាហរណ៍ជាច្រើនទៀតសម្រាប់មនុស្សលោកដើម្បីឱ្យពួកគេចងចាំ ។

وَمَثَلُ كَلِمَةٍ خَبِيثَةٍ كَشَجَرَةٍ خَبِيثَةٍ ٱجْتُثَّتْ مِن فَوْقِ ٱلْأَرْضِ مَا لَهَا مِن قَرَارٍ ﴿٢٦﴾

២៦-ហើយការប្រៀបធៀបពាក្យសំដីដែលអាក្រក់ប្រៀបដូចជាដើមឈើមួយដែលអាក្រក់ ដែលត្រូវបានគេដកទាំងឫសចេញពីដីដែលវាគ្មានភាពរឹងមាំទៀតឡើយ ។

يُثَبِّتُ ٱللَّهُ ٱلَّذِينَ ءَامَنُوا۟ بِٱلْقَوْلِ ٱلثَّابِتِ فِى ٱلْحَيَوٰةِ ٱلدُّنْيَا وَفِى ٱلْـَٔاخِرَةِ ۖ وَيُضِلُّ ٱللَّهُ ٱلظَّٰلِمِينَ ۚ وَيَفْعَلُ ٱللَّهُ مَا يَشَآءُ ﴿٢٧﴾

២៧-អល់ឡោះនឹងពង្រឹងដល់បណ្តាអ្នកដែលមានជំនឿនឹងពាក្យសំដីដែលរឹងមាំ( កាលីម៉ះស្ហាហាដះ ) ទាំងការរស់នៅក្នុងលោកិយ និងនៅថ្ងៃបរលោក ។ ហើយអល់ឡោះនឹងធ្វើឱ្យវង្វេងដល់ពួកដែលបំពាន ។ ហើយអល់ឡោះធ្វើនូវអ្វីដែលទ្រង់មានចេតនា ។

۞ أَلَمْ تَرَ إِلَى ٱلَّذِينَ بَدَّلُوا۟ نِعْمَتَ ٱللَّهِ كُفْرًا وَأَحَلُّوا۟ قَوْمَهُمْ دَارَ ٱلْبَوَارِ ﴿٢٨﴾

២៨-តើអ្នកមិនបានឃើញទេឬ ចំពោះពួកដែលបានផ្លាស់ប្តូរនៀកម៉ាត់របស់អល់ឡោះទៅយកភាពគ្មានជំនឿ ហើយពួកគេបានធ្វើឱ្យក្រុមរបស់ពួកគេធ្លាក់ទៅកន្លែងវិនាសអន្តរាយ( នៅសមរភូមិបាទើរ ) នោះ?

جَهَنَّمَ يَصْلَوْنَهَا ۖ وَبِئْسَ ٱلْقَرَارُ ﴿٢٩﴾

២៩-គឺនរកជើហាន់ណាំដែលពួកគេត្រូវរុញធ្លាក់ក្នុងវា ហើយជាកន្លែងស្នាក់នៅដែលអាក្រក់បំផុត ។

وَجَعَلُوا۟ لِلَّهِ أَندَادًا لِّيُضِلُّوا۟ عَن سَبِيلِهِۦ ۗ قُلْ تَمَتَّعُوا۟ فَإِنَّ مَصِيرَكُمْ إِلَى ٱلنَّارِ ﴿٣٠﴾

៣០-ហើយពួកគេបានយកព្រះនានាមកធ្វើជាដៃគូជាមួយអល់ឡោះ ដើម្បីធ្វើឱ្យ( មនុស្សលោក ) វង្វេងពីមាគ៌ារបស់ទ្រង់ ។ ចូរអ្នកពោលថា: ចូរពួកអ្នកសប្បាយរីករាយមួយរយៈពេលសិន

ចុះ! ប៉ុន្តែកន្លែងវិលត្រឡប់ពិតប្រាកដរបស់ពួកអ្នកនោះគឺទៅកាន់នរក។

៣១-ចូរអ្នកពោលទៅកាន់បណ្តាខ្ញុំរបស់យើងដែលមានជំនឿឱ្យពួកគេប្រតិបត្តិសឡាតនិងឱ្យពួកគេបរិច្ចាគអំពីអ្វីៗដែលយើងបានផ្តល់លាភសក្ការៈឱ្យពួកគេ ដោយអាថ៌កំបាំង និងលាតត្រដាងមុននឹងថ្ងៃដែលគ្មានការលក់ដូរនិងថ្ងៃដែលគ្មានមិត្តភក្តិមកដល់។

៣២-អល់ឡោះជាអ្នកដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដី ហើយទ្រង់បានបញ្ចុះទឹកភ្លៀងពីលើមេឃ ហើយទ្រង់បានបញ្ចេញពីទឹកភ្លៀងនោះនូវភោគផលជាច្រើនដែលជាលាភសក្ការៈសម្រាប់ពួកអ្នក។ ហើយទ្រង់បានបង្កើតឱ្យមានសំពៅជាប្រយោជន៍សម្រាប់ពួកអ្នក ដើម្បីឱ្យវាធ្វើដំណើរតាមសមុទ្រតាមបទបញ្ជារបស់ទ្រង់។ ហើយទ្រង់ក៏បានបង្កើតឱ្យពួកអ្នកមានទន្លេជាច្រើនទៀតផងដែរ។

៣៣-ហើយទ្រង់បានបង្កើតព្រះអាទិត្យ និងព្រះច័ន្ទដោយដើរតាមគន្លងរបស់វាជាប្រយោជន៍សម្រាប់ពួកអ្នក ហើយទ្រង់បានបង្កើតយប់ និងថ្ងៃក៏ជាប្រយោជន៍សម្រាប់ពួកអ្នកដែរ ។

៣៤-ហើយទ្រង់បានផ្តល់ឱ្យពួកអ្នកនូវរាល់អ្វីៗដែលពួកអ្នកបានបួងសួងសុំពីទ្រង់ ហើយប្រសិនបើពួកអ្នករាប់ចំនួននៀកម៉ាត់របស់អល់ឡោះ គឺពួកអ្នកមិនអាចរាប់វាអស់ឡើយ។ ពិតប្រាកដណាស់ មនុស្សលោកគឺបំពាននិងប្រឆាំងយ៉ាងខ្លាំង។

៣៥-ហើយ(ចូរចងចាំ)នៅពេលដែលអ៊ីព្រាហ៊ីមបានពោលថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាធ្វើឱ្យទីក្រុងនេះ(ម៉ាក្កះ)មានសុខសន្តិភាព និងបញ្ចៀសរូបខ្ញុំ ហើយនិងកូនចៅរបស់ខ្ញុំអំពីការគោរពសក្ការៈរូបសំណាកនានាផងចុះ។

៣៦-ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ពួកវា(រូបសំណាក)បានធ្វើឱ្យមនុស្សលោកជាច្រើនវង្វេង។ ហើយបុគ្គលណាដែលបានតាម(មាគ៌ា)ខ្ញុំ គឺបុគ្គលនោះពិតជាស្ថិតនៅក្នុងក្រុមរបស់ខ្ញុំ។ រីឯបុគ្គលណាដែលបានប្រឆាំងនឹង(មាគ៌ា)ខ្ញុំវិញ គឺទ្រង់ពិតជាមហា

قُل لِّعِبَادِيَ ٱلَّذِينَ ءَامَنُواْ يُقِيمُواْ ٱلصَّلَوٰةَ وَيُنفِقُواْ مِمَّا رَزَقۡنَٰهُمۡ سِرّٗا وَعَلَانِيَةٗ مِّن قَبۡلِ أَن يَأۡتِيَ يَوۡمٞ لَّا بَيۡعٞ فِيهِ وَلَا خِلَٰلٌ ٣١

ٱللَّهُ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ وَأَنزَلَ مِنَ ٱلسَّمَآءِ مَآءٗ فَأَخۡرَجَ بِهِۦ مِنَ ٱلثَّمَرَٰتِ رِزۡقٗا لَّكُمۡۖ وَسَخَّرَ لَكُمُ ٱلۡفُلۡكَ لِتَجۡرِيَ فِي ٱلۡبَحۡرِ بِأَمۡرِهِۦۖ وَسَخَّرَ لَكُمُ ٱلۡأَنۡهَٰرَ ٣٢

وَسَخَّرَ لَكُمُ ٱلشَّمۡسَ وَٱلۡقَمَرَ دَآئِبَيۡنِۖ وَسَخَّرَ لَكُمُ ٱلَّيۡلَ وَٱلنَّهَارَ ٣٣

وَءَاتَىٰكُم مِّن كُلِّ مَا سَأَلۡتُمُوهُۚ وَإِن تَعُدُّواْ نِعۡمَتَ ٱللَّهِ لَا تُحۡصُوهَآۗ إِنَّ ٱلۡإِنسَٰنَ لَظَلُومٞ كَفَّارٞ ٣٤

وَإِذۡ قَالَ إِبۡرَٰهِيمُ رَبِّ ٱجۡعَلۡ هَٰذَا ٱلۡبَلَدَ ءَامِنٗا وَٱجۡنُبۡنِي وَبَنِيَّ أَن نَّعۡبُدَ ٱلۡأَصۡنَامَ ٣٥

رَبِّ إِنَّهُنَّ أَضۡلَلۡنَ كَثِيرٗا مِّنَ ٱلنَّاسِۖ فَمَن تَبِعَنِي فَإِنَّهُۥ مِنِّيۖ وَمَنۡ عَصَانِي فَإِنَّكَ غَفُورٞ رَّحِيمٞ ٣٦

អភ័យទោស មហាអាណិតស្រឡាញ់ ។

៣៧-ឱម្ចាស់របស់យើងខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំបានឱ្យកូនចៅរបស់ខ្ញុំមួយចំនួនរស់នៅទីជ្រលងភ្នំដែលគ្មានដំណាំទាល់តែសោះនៅឯពៃតុលឡោះ ។ ឱម្ចាស់របស់យើងខ្ញុំ! (ខ្ញុំប្រតិបត្តិតាមទ្រង់ដូចនេះ) គឺដើម្បីឱ្យពួកគេប្រតិបត្តិសឡាត ។ ដូច្នេះ សូមទ្រង់មេត្តាធ្វើឱ្យដួងចិត្តមនុស្សលោកមួយចំនួនចូលចិត្តពួកគេ និងប្រទានលាភសក្ការៈដល់ពួកគេនូវភោគផលនានាផង ដើម្បីពួកគេនឹងដឹងគុណ ។

رَّبَّنَآ إِنِّيٓ أَسۡكَنتُ مِن ذُرِّيَّتِي بِوَادٍ غَيۡرِ ذِي زَرۡعٍ عِندَ بَيۡتِكَ ٱلۡمُحَرَّمِ رَبَّنَا لِيُقِيمُواْ ٱلصَّلَوٰةَ فَٱجۡعَلۡ أَفۡـِٔدَةً مِّنَ ٱلنَّاسِ تَهۡوِيٓ إِلَيۡهِمۡ وَٱرۡزُقۡهُم مِّنَ ٱلثَّمَرَٰتِ لَعَلَّهُمۡ يَشۡكُرُونَ ٣٧

៣៨-ឱម្ចាស់របស់យើងខ្ញុំ! តាមពិតទ្រង់ដឹងនូវអ្វីដែលយើងខ្ញុំលាក់បាំង និងអ្វីដែលយើងខ្ញុំលាតត្រដាង ហើយគ្មានអ្វីអាចលាក់បាំងចំពោះអល់ឡោះបន្តិចណាឡើយ ទោះបីជានៅលើផែនដី ឬនៅលើមេឃក៏ដោយ ។

رَبَّنَآ إِنَّكَ تَعۡلَمُ مَا نُخۡفِي وَمَا نُعۡلِنُۗ وَمَا يَخۡفَىٰ عَلَى ٱللَّهِ مِن شَيۡءٖ فِي ٱلۡأَرۡضِ وَلَا فِي ٱلسَّمَآءِ ٣٨

៣៩-រាល់ការសរសើរ គឺចំពោះអល់ឡោះ ដែលទ្រង់បានប្រទានអ៊ីស្មាអ៊ីល និងអ៊ីសហាកឱ្យខ្ញុំក្នុងវ័យចាស់ជរាហើយនោះ ។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំឮនូវរាល់ការបួងសួងសុំ ។

ٱلۡحَمۡدُ لِلَّهِ ٱلَّذِي وَهَبَ لِي عَلَى ٱلۡكِبَرِ إِسۡمَٰعِيلَ وَإِسۡحَٰقَۚ إِنَّ رَبِّي لَسَمِيعُ ٱلدُّعَآءِ ٣٩

៤០-ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាធ្វើឱ្យខ្ញុំនិងកូនចៅរបស់ខ្ញុំមួយចំនួនក្លាយជាអ្នកដែលប្រតិបត្តិសឡាតផងចុះ ។ ឱម្ចាស់របស់យើងខ្ញុំ! សូមទ្រង់ទទួលយកនូវការបួងសួងសុំរបស់ខ្ញុំផង ។

رَبِّ ٱجۡعَلۡنِي مُقِيمَ ٱلصَّلَوٰةِ وَمِن ذُرِّيَّتِيۚ رَبَّنَا وَتَقَبَّلۡ دُعَآءِ ٤٠

៤១-ឱម្ចាស់របស់យើងខ្ញុំ! សូមទ្រង់មេត្តាអភ័យទោសដល់ខ្ញុំ និងឪពុកម្ដាយរបស់ខ្ញុំ និងបណ្ដាអ្នកដែលមានជំនឿនៅថ្ងៃជំនុំជំរះនឹងកើតឡើងផង ។

رَبَّنَا ٱغۡفِرۡ لِي وَلِوَٰلِدَيَّ وَلِلۡمُؤۡمِنِينَ يَوۡمَ يَقُومُ ٱلۡحِسَابُ ٤١

៤២-ហើយចូរអ្នក(មូហាំម៉ាត់) កុំគិតថា អល់ឡោះមិនដឹងចំពោះអ្វីដែលពួកបំពានប្រព្រឹត្តឱ្យសោះ ។ តាមពិតទ្រង់គ្រាន់តែពន្យារពេល(ធ្វើទារុណកម្ម)ពួកគេរហូតដល់ថ្ងៃដែលភ្នែក(របស់ពួកគេ)សម្លឹងមើលដោយតក់ស្លុតនៅថ្ងៃនោះប៉ុណ្ណោះ ។

وَلَا تَحۡسَبَنَّ ٱللَّهَ غَٰفِلًا عَمَّا يَعۡمَلُ ٱلظَّٰلِمُونَۚ إِنَّمَا يُؤَخِّرُهُمۡ لِيَوۡمٖ تَشۡخَصُ فِيهِ ٱلۡأَبۡصَٰرُ ٤٢

៤៣-(នៅថ្ងៃដែលពួកបំពានក្រោកពីផ្នូរ)ដោយប្រញាប់ប្រញាល់ទៅទាំងងើយក្បាលរបស់ពួកគេ(តាមការអំពាវនាវ)

مُهۡطِعِينَ مُقۡنِعِي رُءُوسِهِمۡ لَا يَرۡتَدُّ إِلَيۡهِمۡ

طَرْفُهُمْ ۖ وَأَفْـِٔدَتُهُمْ هَوَآءٌ ﴿٤٣﴾

ដែលក្រសែភ្នែករបស់ពួកគេមិនងាកមើលគ្នាឡើយ ហើយចិត្តរបស់ពួកគេទទេធ្លុង(ដោយសារការភ័យខ្លាចយ៉ាងខ្លាំង)។

وَأَنذِرِ ٱلنَّاسَ يَوْمَ يَأْتِيهِمُ ٱلْعَذَابُ فَيَقُولُ
ٱلَّذِينَ ظَلَمُوا۟ رَبَّنَآ أَخِّرْنَآ إِلَىٰٓ أَجَلٍ قَرِيبٍ
نُّجِبْ دَعْوَتَكَ وَنَتَّبِعِ ٱلرُّسُلَ ۗ أَوَلَمْ تَكُونُوٓا۟
أَقْسَمْتُم مِّن قَبْلُ مَا لَكُم مِّن زَوَالٍ ﴿٤٤﴾

៤៤-ចូរអ្នក(មូហាំម៉ាត់)ដាស់តឿនព្រមានដល់មនុស្សលោក អំពីថ្ងៃដែលទារុណកម្មនឹងមកដល់ពួកគេ។ ហើយពួកដែលបំពាននឹងនិយាយថា: ឱម្ចាស់របស់យើងខ្ញុំ! សូមទ្រង់មេត្តាពន្យារពេលដល់ពួកយើងខ្ញុំមួយរយៈពេលខ្លីផងចុះ! ពួកយើងនឹងទទួលយកការអំពាវនាវរបស់ទ្រង់ ហើយពួកយើងនឹងគោរពតាមបណ្តាអ្នកនាំសារ។ (មានគេនិយាយទៅកាន់ពួកនេះថា) តើពួកអ្នកមិនធ្លាប់បានស្បថពីមុនទេឬថា ពួកអ្នកនឹងមិនលាចាកពីលោកិយ(ទៅថ្ងៃបរលោក)ទេនោះ?

وَسَكَنتُمْ فِى مَسَـٰكِنِ ٱلَّذِينَ ظَلَمُوٓا۟
أَنفُسَهُمْ وَتَبَيَّنَ لَكُمْ كَيْفَ فَعَلْنَا بِهِمْ
وَضَرَبْنَا لَكُمُ ٱلْأَمْثَالَ ﴿٤٥﴾

៤៥-ហើយពួកអ្នកបានមករស់នៅក្នុងផ្ទះសម្បែងរបស់ពួកដែលបានបំពានលើខ្លួនឯង(កាលពីមុន)។ ហើយ(ផ្ទះសម្បែងនោះ)បានបញ្ជាក់យ៉ាងច្បាស់ដល់ពួកអ្នកថា: តើយើងបានធ្វើដូចម្តេចចំពោះពួកគេ? ហើយយើងបានលើកឧទាហរណ៍ជាច្រើនទៀតសម្រាប់ពួកអ្នក។

وَقَدْ مَكَرُوا۟ مَكْرَهُمْ وَعِندَ ٱللَّهِ
مَكْرُهُمْ وَإِن كَانَ مَكْرُهُمْ لِتَزُولَ
مِنْهُ ٱلْجِبَالُ ﴿٤٦﴾

៤៦-ហើយជាការពិតណាស់ ពួកគេបានរៀបចំនូវឧបាយកលរបស់ពួកគេ(ដើម្បីសម្លាប់មូហាំម៉ាត់) ហើយឧបាយកលរបស់ពួកគេនោះគឺអល់ឡោះដឹង។ ទោះបីជាឧបាយកលរបស់ពួកគេនោះអាចធ្វើឱ្យភ្នំនានារលាយបាត់ក៏ដោយ (ក៏មិនអាចធ្វើអ្វីបានដែរ)។

فَلَا تَحْسَبَنَّ ٱللَّهَ مُخْلِفَ وَعْدِهِۦ رُسُلَهُۥٓ ۚ
إِنَّ ٱللَّهَ عَزِيزٌ ذُو ٱنتِقَامٍ ﴿٤٧﴾

៤៧-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)កុំគិតថា អល់ឡោះជាអ្នកធ្វើខុសការសន្យារបស់ទ្រង់ចំពោះបណ្តាអ្នកនាំសាររបស់ទ្រង់ឱ្យសោះ។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងពូកែ មានអានុភាពផ្តន្ទាទោស។

يَوْمَ تُبَدَّلُ ٱلْأَرْضُ غَيْرَ ٱلْأَرْضِ وَٱلسَّمَـٰوَٰتُ ۖ
وَبَرَزُوا۟ لِلَّهِ ٱلْوَٰحِدِ ٱلْقَهَّارِ ﴿٤٨﴾

៤៨-នៅថ្ងៃដែលផែនដីនឹងត្រូវគេផ្លាស់ប្តូរទៅជាផែនដីផ្សេង និងមេឃជាច្រើនជាន់(ក៏ត្រូវគេផ្លាស់ប្តូរដែរ)។ ហើយពួកគេ(មនុស្សលោក)បានបង្ហាញខ្លួននៅចំពោះមុខអល់ឡោះដែលមហាខ្លាំងពូកែតែមួយគត់។

وَتَرَى ٱلْمُجْرِمِينَ يَوْمَئِذٍ مُّقَرَّنِينَ فِى

៤៩-ហើយអ្នក(មូហាំម៉ាត់)នឹងឃើញពួកដែលប្រព្រឹត្តអំពើ

ٱلۡأَصۡفَادِ ﴿٤٩﴾

អាក្រក់នៅថ្ងៃនោះ(ថ្ងៃបរលោក)នឹងត្រូវគេចង(ដៃជើងរបស់ពួកគេ)ភ្ជាប់នឹងច្រវ៉ាក់។

سَرَابِيلُهُم مِّن قَطِرَانٖ وَتَغۡشَىٰ وُجُوهَهُمُ ٱلنَّارُ ﴿٥٠﴾

៥០-ខោអាវរបស់ពួកគេធ្វើអំពីជ័រ ហើយភ្លើងនរកនឹងគ្របដណ្ដប់លើមុខរបស់ពួកគេ។

لِيَجۡزِيَ ٱللَّهُ كُلَّ نَفۡسٖ مَّا كَسَبَتۡۚ إِنَّ ٱللَّهَ سَرِيعُ ٱلۡحِسَابِ ﴿٥١﴾

៥១-ដើម្បីអល់ឡោះនឹងតបស្នងដល់បុគ្គលគ្រប់រូបនូវអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមក។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកជំរះក្ដីយ៉ាងរហ័សបំផុត។

هَٰذَا بَلَٰغٞ لِّلنَّاسِ وَلِيُنذَرُواْ بِهِۦ وَلِيَعۡلَمُوٓاْ أَنَّمَا هُوَ إِلَٰهٞ وَٰحِدٞ وَلِيَذَّكَّرَ أُوْلُواْ ٱلۡأَلۡبَٰبِ ﴿٥٢﴾

៥២-នេះ(គម្ពីរគួរអាន)ជាសារផ្សព្វផ្សាយមួយសម្រាប់មនុស្សលោក និងដើម្បីដាស់តឿនព្រមានដល់ពួកគេតាមរយៈវា និងដើម្បីឱ្យពួកគេដឹងថាៈ ជាការពិតណាស់ទ្រង់ជាម្ចាស់តែមួយគត់ដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដ។ ហើយក៏ដើម្បីឱ្យបញ្ញាជនទាំងឡាយចេះគិតពិចារណាផងដែរ។

## سورة الحجر

## ជំពូកអាល់ហ៊ិជរ៍

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់។

الٓرۚ تِلۡكَ ءَايَٰتُ ٱلۡكِتَٰبِ وَقُرۡءَانٖ مُّبِينٖ ﴿١﴾

១-អាលិហ្វ ឡាម រ៉។ ទាំងនោះគឺជាអាយ៉ាត់ៗនៃគម្ពីរ និងជាអាយ៉ាត់ៗគួរអានយ៉ាងច្បាស់លាស់។

رُّبَمَا يَوَدُّ ٱلَّذِينَ كَفَرُواْ لَوۡ كَانُواْ مُسۡلِمِينَ ﴿٢﴾

២-ពួកដែលគ្មានជំនឿស្រមើស្រមៃថា (ពួកគេនឹងបានចូលឋានសួគ៌ដែរ) បើពួកគេជាមូស្លីមវិញនោះ។

ذَرۡهُمۡ يَأۡكُلُواْ وَيَتَمَتَّعُواْ وَيُلۡهِهِمُ ٱلۡأَمَلُۖ فَسَوۡفَ يَعۡلَمُونَ ﴿٣﴾

៣-ចូរអ្នក(មូហាំម៉ាត់)បណ្ដោយឱ្យពួកគេបរិភោគ និងសប្បាយរីករាយ ហើយនិងឱ្យការស្រមើស្រមៃធ្វើឱ្យពួកគេងប់ងុលចុះ! ដូច្នេះ ពួកគេគង់តែនឹងដឹង។

وَمَآ أَهۡلَكۡنَا مِن قَرۡيَةٍ إِلَّا وَلَهَا كِتَابٞ مَّعۡلُومٞ ﴿٤﴾

៤-ហើយយើងមិនបានបំផ្លាញភូមិស្រុកណាមួយឡើយ លុះត្រាតែមានការកំណត់ច្បាស់លាស់សម្រាប់វា។

مَّا تَسۡبِقُ مِنۡ أُمَّةٍ أَجَلَهَا وَمَا يَسۡتَـٔۡخِرُونَ ﴿٥﴾

៥-គ្មានប្រជាជាតិណាមួយអាច(ធ្វើឱ្យសេចក្ដីស្លាប់)កើតឡើង

មុនពេលកំណត់របស់វាបានឡើយ ហើយពួកគេក៏មិនអាចពន្យារពេល(សេចក្ដីស្លាប់)បានដែរ ។

وَقَالُواْ يَٰٓأَيُّهَا ٱلَّذِي نُزِّلَ عَلَيۡهِ ٱلذِّكۡرُ إِنَّكَ لَمَجۡنُونٞ ٦

៦-ហើយពួកគេ(ពួកប្រឆាំង)បាននិយាយថាៈ ឱអ្នកដែលត្រូវបានគេបញ្ចុះគម្ពីរគួរអានឱ្យ! ពិតប្រាកដណាស់ អ្នកគឺជាមនុស្សវិកលចរិត ។

لَّوۡ مَا تَأۡتِينَا بِٱلۡمَلَٰٓئِكَةِ إِن كُنتَ مِنَ ٱلصَّٰدِقِينَ ٧

៧-ហេតុអ្វីបានជាអ្នកមិននាំម៉ាឡាអ៊ីកាត់មកឱ្យយើង ប្រសិនបើអ្នកស្ថិតក្នុងចំណោមអ្នកដែលសច្ចៈមែននោះ?

مَا نُنَزِّلُ ٱلۡمَلَٰٓئِكَةَ إِلَّا بِٱلۡحَقِّ وَمَا كَانُوٓاْ إِذٗا مُّنظَرِينَ ٨

៨-(អល់ឡោះតបវិញថា) យើងមិនបញ្ចុះម៉ាឡាអ៊ីកាត់ទេ លើកលែងតែមានមូលហេតុត្រឹមត្រូវ ដូច្នេះហើយពួកគេមិនត្រូវបានគេពន្យារពេលឡើយ ។

إِنَّا نَحۡنُ نَزَّلۡنَا ٱلذِّكۡرَ وَإِنَّا لَهُۥ لَحَٰفِظُونَ ٩

៩-ពិតប្រាកដណាស់ យើងបានបញ្ចុះគម្ពីរគួរអាន ហើយពិតប្រាកដណាស់ យើងជាអ្នកថែរក្សាវា ។

وَلَقَدۡ أَرۡسَلۡنَا مِن قَبۡلِكَ فِي شِيَعِ ٱلۡأَوَّلِينَ ١٠

១០-ហើយជាការពិតណាស់ យើងបានបញ្ជូន(អ្នកនាំសារជាច្រើន)មុនអ្នក(មូហាំម៉ាត់)នៅក្នុងចំណោមប្រជាជាតិជំនាន់មុនៗ ។

وَمَا يَأۡتِيهِم مِّن رَّسُولٍ إِلَّا كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ١١

១១-ហើយរាល់ៗអ្នកនាំសារដែលបានមកដល់ពួកគេ គឺពួកគេតែងតែចំអកឡកឡឺយចំពោះគេ(អ្នកនាំសារ)ជានិច្ច ។

كَذَٰلِكَ نَسۡلُكُهُۥ فِي قُلُوبِ ٱلۡمُجۡرِمِينَ ١٢

១២-ដូច្នោះហើយ យើងបានបញ្ចូលវា(ភាពប្រឆាំង)ទៅក្នុងចិត្តរបស់ពួកដែលប្រព្រឹត្តអំពើអាក្រក់ ។

لَا يُؤۡمِنُونَ بِهِۦ وَقَدۡ خَلَتۡ سُنَّةُ ٱلۡأَوَّلِينَ ١٣

១៣-ពួកគេគ្មានជំនឿនឹងវា(គម្ពីរគួរអាន)ឡើយ ។ ហើយជាការពិតណាស់ មាគ៌ារបស់ពួកជំនាន់មុនបានកើតឡើងរួចមកហើយ ។

وَلَوۡ فَتَحۡنَا عَلَيۡهِم بَابٗا مِّنَ ٱلسَّمَآءِ فَظَلُّواْ فِيهِ يَعۡرُجُونَ ١٤

១៤-ហើយប្រសិនបើយើង(អល់ឡោះ)បានបើកទ្វារណាមួយពីលើមេឃឱ្យពួកគេនោះ ពួកគេនៅតែបន្តឡើងទៅលើវារហូត ។

لَقَالُوٓاْ إِنَّمَا سُكِّرَتۡ أَبۡصَٰرُنَا بَلۡ نَحۡنُ قَوۡمٞ مَّسۡحُورُونَ ١٥

១៥-ពួកគេប្រាកដជានឹងនិយាយថាៈ តាមពិតភ្នែករបស់ពួកយើងត្រូវបានគេបំភាន់ ។ ផ្ទុយទៅវិញពួកយើងគឺជាក្រុមដែលត្រូវ

មន្តអាគម ។

وَلَقَدۡ جَعَلۡنَا فِي ٱلسَّمَآءِ بُرُوجٗا وَزَيَّنَّٰهَا لِلنَّٰظِرِينَ ﴿١٦﴾

១៦-ហើយជាការពិតណាស់ យើងបានបង្កើតផ្កាយជាច្រើននៅលើមេឃ ហើយយើងបានលំអវាសម្រាប់អ្នកដែលសញ្ជឹងមើល ។

وَحَفِظۡنَٰهَا مِن كُلِّ شَيۡطَٰنٖ رَّجِيمٍ ﴿١٧﴾

១៧-ហើយយើងបានការពារវា(មេឃ)អំពីរាល់ស្ទែតនដែលត្រូវគេដាក់បណ្តាសា ។

إِلَّا مَنِ ٱسۡتَرَقَ ٱلسَّمۡعَ فَأَتۡبَعَهُۥ شِهَابٞ مُّبِينٞ ﴿١٨﴾

១៨-លើកលែងតែស្ទែតនណាដែលបានលួចស្តាប់(ដំណឹងពីម៉ាឡាអ៊ីកាត់)ប៉ុណ្ណោះ ។ ហើយភ្លើងផ្កាយដ៏ភ្លឺច្បាស់បានតាមដុតកម្ទេចវា ។

وَٱلۡأَرۡضَ مَدَدۡنَٰهَا وَأَلۡقَيۡنَا فِيهَا رَوَٰسِيَ وَأَنۢبَتۡنَا فِيهَا مِن كُلِّ شَيۡءٖ مَّوۡزُونٖ ﴿١٩﴾

១៩-ហើយផែនដី យើងបានពង្រាបវា និងបានបង្កើតភ្នំជាច្រើននៅលើវា ហើយនិងបានបណ្តុះរាល់អ្វីៗទាំងអស់នៅលើវាតាមការកំណត់ ។

وَجَعَلۡنَا لَكُمۡ فِيهَا مَعَٰيِشَ وَمَن لَّسۡتُمۡ لَهُۥ بِرَٰزِقِينَ ﴿٢٠﴾

២០-ហើយយើងបានបង្កើតការរស់នៅនៅលើវា(ផែនដី)សម្រាប់ពួកអ្នក និងអ្នកដែលពួកអ្នកពុំមែនជាអ្នកផ្តល់លាភសក្ការៈដល់គេ ។

وَإِن مِّن شَيۡءٍ إِلَّا عِندَنَا خَزَآئِنُهُۥ وَمَا نُنَزِّلُهُۥٓ إِلَّا بِقَدَرٖ مَّعۡلُومٖ ﴿٢١﴾

២១-ហើយអ្វីៗទាំងអស់គឺយើង(អល់ឡោះ)មានឃ្លាំងស្តុករបស់វា ហើយយើងមិនបញ្ចុះវាឡើយ លើកលែងតែក្នុងកំរិតមួយច្បាស់លាស់ប៉ុណ្ណោះ ។

وَأَرۡسَلۡنَا ٱلرِّيَٰحَ لَوَٰقِحَ فَأَنزَلۡنَا مِنَ ٱلسَّمَآءِ مَآءٗ فَأَسۡقَيۡنَٰكُمُوهُ وَمَآ أَنتُمۡ لَهُۥ بِخَٰزِنِينَ ﴿٢٢﴾

២២-ហើយយើងបានបញ្ជូនខ្យល់ឱ្យទៅផ្គុំជាមួយពពក បន្ទាប់មកយើងបានបញ្ចុះទឹកភ្លៀងពីលើមេឃ ហើយយើងបានផ្តល់វាឱ្យអ្នកទាំងអស់គ្នាផឹកដោយពួកអ្នកពុំមែនជាអ្នកស្តុកវាទុកឡើយ ។

وَإِنَّا لَنَحۡنُ نُحۡيِۦ وَنُمِيتُ وَنَحۡنُ ٱلۡوَٰرِثُونَ ﴿٢٣﴾

២៣-ហើយពិតប្រាកដណាស់ យើងគឺជាអ្នកផ្តល់ជីវិត និងជាអ្នកដកយកជីវិតវិញ ហើយយើងក៏ជាអ្នកទទួលមរតក(អ្វីៗដែលមាននៅលើផែនដី)ដែរ ។

وَلَقَدۡ عَلِمۡنَا ٱلۡمُسۡتَقۡدِمِينَ مِنكُمۡ وَلَقَدۡ عَلِمۡنَا ٱلۡمُسۡتَـٔۡخِرِينَ ﴿٢٤﴾

២៤-ហើយជាការពិតណាស់ យើងបានដឹងអំពីពួកជំនាន់មុន(ដែលបានស្លាប់)ក្នុងចំណោមពួកអ្នក ហើយយើងក៏ពិតជាបានដឹងអំពីពួកជំនាន់ក្រោយ(ដែលត្រូវរស់រហូតដល់ថ្ងៃបរលោក)ដែរ ។

وَإِنَّ رَبَّكَ هُوَ يَحْشُرُهُمْ ۚ إِنَّهُۥ حَكِيمٌ عَلِيمٌ ٢٥

២៥-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នក ទ្រង់នឹងប្រមូលផ្តុំពួកគេ(នៅថ្ងៃបរលោក)ជាមិនខាន។ ពិតប្រាកដណាស់ ទ្រង់មហាគតិបណ្ឌិត មហាដឹង។

وَلَقَدْ خَلَقْنَا ٱلْإِنسَٰنَ مِن صَلْصَٰلٍ مِّنْ حَمَإٍ مَّسْنُونٍ ٢٦

២៦-ហើយជាការពិតណាស់ យើងបានបង្កើតមនុស្សលោកអំពីដីស្អិតស្ងួតចេញពីដីភក់ខ្មៅដែលត្រូវគេសូនជារូបរាង។

وَٱلْجَآنَّ خَلَقْنَٰهُ مِن قَبْلُ مِن نَّارِ ٱلسَّمُومِ ٢٧

២៧-ហើយជិន(អ៊ីព្លីស)យើងបានបង្កើតវាមុន(អាដាំ)អំពីភ្លើងដែលក្តៅបំផុត។

وَإِذْ قَالَ رَبُّكَ لِلْمَلَٰٓئِكَةِ إِنِّى خَٰلِقٌۢ بَشَرًا مِّن صَلْصَٰلٍ مِّنْ حَمَإٍ مَّسْنُونٍ ٢٨

២៨-ហើយ(ចូរចងចាំ)នៅពេលដែលម្ចាស់របស់អ្នកបានមានបន្ទូលទៅកាន់បណ្តាម៉ាឡាអ៊ីកាត់ថា: ពិតប្រាកដណាស់ យើងជាអ្នកបង្កើតមនុស្សលោកអំពីដីស្អិតស្ងួតចេញពីដីភក់ខ្មៅដែលត្រូវគេសូនជារូបរាង។

فَإِذَا سَوَّيْتُهُۥ وَنَفَخْتُ فِيهِ مِن رُّوحِى فَقَعُوا۟ لَهُۥ سَٰجِدِينَ ٢٩

២៩-ហើយនៅពេលដែលយើងបានធ្វើឱ្យគេ(អាដាំ)មានរូបរាងពេញលេញ និងបានផ្លុំវិញ្ញាណរបស់យើងបញ្ចូលទៅក្នុងខ្លួនរបស់គេហើយនោះ ចូរពួកអ្នក(ម៉ាឡាអ៊ីកាត់)ក្រាបគោរពចំពោះគេចុះ។

فَسَجَدَ ٱلْمَلَٰٓئِكَةُ كُلُّهُمْ أَجْمَعُونَ ٣٠

៣០-ពេលនោះបណ្តាម៉ាឡាអ៊ីកាត់ក៏បានស៊ូជូតទាំងអស់គ្នា។

إِلَّآ إِبْلِيسَ أَبَىٰٓ أَن يَكُونَ مَعَ ٱلسَّٰجِدِينَ ٣١

៣១-លើកលែងតែអ៊ីព្លីសប៉ុណ្ណោះដែលបានបដិសេធក្នុងការចូលរួមជាមួយបណ្តាអ្នកដែលស៊ូជូត។

قَالَ يَٰٓإِبْلِيسُ مَا لَكَ أَلَّا تَكُونَ مَعَ ٱلسَّٰجِدِينَ ٣٢

៣២-ទ្រង់បានមានបន្ទូលថា: ឱអ៊ីព្លីស! ហេតុអ្វីបានជាឯងមិនព្រមចូលរួមជាមួយបណ្តាអ្នកដែលស៊ូជូត?

قَالَ لَمْ أَكُن لِّأَسْجُدَ لِبَشَرٍ خَلَقْتَهُۥ مِن صَلْصَٰلٍ مِّنْ حَمَإٍ مَّسْنُونٍ ٣٣

៣៣-វាបានឆ្លើយថា: ខ្ញុំមិនស៊ូជូតទៅចំពោះមនុស្សដែលទ្រង់បានបង្កើតគេអំពីដីឥដ្ឋស្ងួតចេញពីដីភក់ខ្មៅដែលត្រូវគេសូនជារូបរាងនោះទេ។

قَالَ فَٱخْرُجْ مِنْهَا فَإِنَّكَ رَجِيمٌ ٣٤

៣៤-ទ្រង់បានមានបន្ទូលថា: ចូរឯងចាកចេញពីវា(ឋានសួគ៌)ចុះ ពិតប្រាកដណាស់ ឯងត្រូវគេដាក់បណ្តាសា។

وَإِنَّ عَلَيۡكَ ٱللَّعۡنَةَ إِلَىٰ يَوۡمِ ٱلدِّينِ ٣٥

៣៥-ហើយពិតប្រាកដណាស់ ឯងត្រូវបណ្ដាសារហូតដល់ថ្ងៃជំនុំជំរះ(បរលោក)។

قَالَ رَبِّ فَأَنظِرۡنِيٓ إِلَىٰ يَوۡمِ يُبۡعَثُونَ ٣٦

៣៦-វាបាននិយាយថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាពន្យារពេលឱ្យខ្ញុំរហូតដល់ថ្ងៃដែលពួកគេ(មនុស្សលោក)ត្រូវគេធ្វើឱ្យរស់ឡើងវិញផងចុះ។

قَالَ فَإِنَّكَ مِنَ ٱلۡمُنظَرِينَ ٣٧

៣៧-ទ្រង់បានមានបន្ទូលថាៈ ដូច្នេះ ឯងពិតជានឹងស្ថិតក្នុងចំណោមពួកដែលត្រូវគេពន្យារពេល

إِلَىٰ يَوۡمِ ٱلۡوَقۡتِ ٱلۡمَعۡلُومِ ٣٨

៣៨-រហូតដល់ថ្ងៃមួយនៃពេលវេលាដែលត្រូវបានគេកំណត់។

قَالَ رَبِّ بِمَآ أَغۡوَيۡتَنِي لَأُزَيِّنَنَّ لَهُمۡ فِي
ٱلۡأَرۡضِ وَلَأُغۡوِيَنَّهُمۡ أَجۡمَعِينَ ٣٩

៣៩-វាបាននិយាយថាៈ ឱម្ចាស់របស់ខ្ញុំ! ដោយសារតែទ្រង់បានកំណត់ថា ខ្ញុំវង្វេងទៅហើយនោះ ខ្ញុំប្រាកដជានឹងលំអ(ប្រការអាក្រក់)សម្រាប់ពួកគេនៅលើផែនដីនេះ ហើយខ្ញុំពិតជានឹងធ្វើឱ្យពួកគេវង្វេងទាំងអស់គ្នា។

إِلَّا عِبَادَكَ مِنۡهُمُ ٱلۡمُخۡلَصِينَ ٤٠

៤០-លើកលែងតែបណ្ដាខ្ញុំរបស់ទ្រង់ដែលស្មោះត្រង់ក្នុងចំណោមពួកគេប៉ុណ្ណោះ។

قَالَ هَٰذَا صِرَٰطٌ عَلَيَّ مُسۡتَقِيمٌ ٤١

៤១-ទ្រង់បានមានបន្ទូលថាៈ នេះគឺជាមាគ៌ាមួយដែលត្រឹមត្រូវឆ្ពោះមកកាន់យើង។

إِنَّ عِبَادِي لَيۡسَ لَكَ عَلَيۡهِمۡ سُلۡطَٰنٌ
إِلَّا مَنِ ٱتَّبَعَكَ مِنَ ٱلۡغَاوِينَ ٤٢

៤២-ពិតប្រាកដណាស់ ខ្ញុំរបស់យើងទាំងអស់ ឯងគ្មានអំណាចអ្វីទៅលើពួកគេឡើយ លើកលែងតែអ្នកណាដែលបានដើរតាមឯងក្នុងចំណោមពួកដែលវង្វេងប៉ុណ្ណោះ។

وَإِنَّ جَهَنَّمَ لَمَوۡعِدُهُمۡ أَجۡمَعِينَ ٤٣

៤៣-ហើយពិតប្រាកដណាស់ នរកជើហាន់ណាំគឺជាកន្លែងសន្យាសម្រាប់ពួកគេទាំងអស់គ្នា។

لَهَا سَبۡعَةُ أَبۡوَٰبٖ لِّكُلِّ بَابٖ مِّنۡهُمۡ جُزۡءٞ
مَّقۡسُومٌ ٤٤

៤៤-វានោះ(នរកជើហាន់ណាំ)មានទ្វារចំនួនប្រាំពីរ។ ក្នុងចំណោមពួកគេ(ពួកតាមអ៊ីព្លីស)មានការបែងចែកខុសៗគ្នាទៅតាមទ្វារនីមួយៗ(តាមកំរិតបាបកម្មរបស់ខ្លួន)។

إِنَّ ٱلۡمُتَّقِينَ فِي جَنَّٰتٖ وَعُيُونٍ ٤٥

៤៥-ពិតប្រាកដណាស់ បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះនោះគឺស្ថិតក្នុងឋានសួគ៌ និងមានប្រភពទឹកជាច្រើន។

ٱدۡخُلُوهَا بِسَلَٰمٍ ءَامِنِينَ ﴿٤٦﴾

៤៦-ចូរពួកអ្នកចូលទៅក្នុងវា(ឋានសួគ៌) ដោយសេចក្ដីសុខសន្តិភាពចុះ។

وَنَزَعۡنَا مَا فِي صُدُورِهِم مِّنۡ غِلٍّ إِخۡوَٰنًا عَلَىٰ سُرُرٖ مُّتَقَٰبِلِينَ ﴿٤٧﴾

៤៧-ហើយយើងបានបំបាត់ពីចិត្តរបស់ពួកគេនូវភាពឈ្នានីសឱ្យចេះស្រឡាញ់គ្នាជាបងប្អូនដែលអង្គុយលើគ្រែទល់មុខគ្នា(ដោយសប្បាយរីករាយ)។

لَا يَمَسُّهُمۡ فِيهَا نَصَبٞ وَمَا هُم مِّنۡهَا بِمُخۡرَجِينَ ﴿٤٨﴾

៤៨-ភាពនឿយហត់នឹងមិនប៉ះពាល់ដល់ពួកគេនៅក្នុងវា(ឋានសួគ៌)ឡើយ ហើយពួកគេក៏មិនត្រូវគេបណ្ដេញចេញពីទីនោះវិញដែរ។

۞ نَبِّئۡ عِبَادِيٓ أَنِّيٓ أَنَا ٱلۡغَفُورُ ٱلرَّحِيمُ ﴿٤٩﴾

៤៩-ចូរអ្នកប្រាប់បណ្ដាខ្ញុំរបស់យើងថា: ពិតប្រាកដណាស់ យើងជាម្ចាស់មហាអភ័យទោស មហាអាណិតស្រឡាញ់។

وَأَنَّ عَذَابِي هُوَ ٱلۡعَذَابُ ٱلۡأَلِيمُ ﴿٥٠﴾

៥០-ហើយពិតប្រាកដណាស់ ទារុណកម្មរបស់យើងគឺជាទារុណកម្មដ៏ឈឺចាប់បំផុត។

وَنَبِّئۡهُمۡ عَن ضَيۡفِ إِبۡرَٰهِيمَ ﴿٥١﴾

៥១-ហើយចូរអ្នកប្រាប់ពួកគេ(ពួកគ្មានជំនឿ)អំពីភ្ញៀវរបស់អ៊ីព្រហ៊ីម(ម៉ាឡាអ៊ីកាត់)។

إِذۡ دَخَلُواْ عَلَيۡهِ فَقَالُواْ سَلَٰمٗا قَالَ إِنَّا مِنكُمۡ وَجِلُونَ ﴿٥٢﴾

៥២-(ចូរចងចាំ)នៅពេលដែលពួកគេ(ម៉ាឡាអ៊ីកាត់)បានចូលទៅជួបគាត់(អ៊ីព្រហ៊ីម) រួចពួកគេក៏បានពោលពាក្យសាឡាម។ គាត់បានតបថា: ពិតប្រាកដណាស់ពួកយើងភ័យខ្លាចចំពោះពួកអ្នក។

قَالُواْ لَا تَوۡجَلۡ إِنَّا نُبَشِّرُكَ بِغُلَٰمٍ عَلِيمٖ ﴿٥٣﴾

៥៣-ពួកគេ(ម៉ាឡាអ៊ីកាត់)បានពោលថា: ចូរអ្នកកុំខ្លាចអ្វី! ពិតប្រាកដណាស់ យើងមកផ្ដល់ដំណឹងរីករាយដល់អ្នកអំពី(ការប្រសូត)ក្មេងប្រុសម្នាក់ដ៏មានចំណេះដឹង។

قَالَ أَبَشَّرۡتُمُونِي عَلَىٰٓ أَن مَّسَّنِيَ ٱلۡكِبَرُ فَبِمَ تُبَشِّرُونَ ﴿٥٤﴾

៥៤-គាត់បានតបថា: តើពួកអ្នកមកប្រាប់ដំណឹងរីករាយដល់ខ្ញុំយ៉ាងដូចម្ដេច ខណៈដែលភាពជរាបានបៀតបៀនខ្ញុំទៅហើយនោះ? ហេតុនេះ តើពួកអ្នកចង់ផ្ដល់ដំណឹងរីករាយអ្វីទៀត?

قَالُواْ بَشَّرۡنَٰكَ بِٱلۡحَقِّ فَلَا تَكُن مِّنَ ٱلۡقَٰنِطِينَ ﴿٥٥﴾

៥៥-ពួកគេ(ម៉ាឡាអ៊ីកាត់)បានពោលថា: យើងបានផ្ដល់ដំណឹងរីករាយដ៏ពិតប្រាកដដល់អ្នក ហេតុនេះចូរអ្នកកុំស្ថិតក្នុងចំណោមពួកដែលអស់សង្ឃឹមឱ្យសោះ។

قَالَ وَمَن يَقۡنَطُ مِن رَّحۡمَةِ رَبِّهِۦٓ

៥៦-គាត់(អ៊ីព្រហ៊ីម)បានពោលថា: ហើយគ្មានអ្នកដែលអស់

إِلَّا ٱلضَّآلُّونَ ﴿٥٦﴾

សង្ឃឹមចំពោះការប្រោសប្រណីពីម្ចាស់របស់គេឡើយ លើកលែងតែពួកដែលវង្វេងប៉ុណ្ណោះ ។

قَالَ فَمَا خَطۡبُكُمۡ أَيُّهَا ٱلۡمُرۡسَلُونَ ﴿٥٧﴾

៥៧-គាត់បានពោលថា: តើអ្វីទៅជាភារកិច្ចរបស់ពួកអ្នក ឱបណ្តាអ្នកនាំសារ(ម៉ាឡាអ៊ីកាត់)?

قَالُوٓاْ إِنَّآ أُرۡسِلۡنَآ إِلَىٰ قَوۡمٖ مُّجۡرِمِينَ ﴿٥٨﴾

៥៨-ពួកគេ(ម៉ាឡាអ៊ីកាត់)បានតបថា: ពិតប្រាកដណាស់ ពួកយើងត្រូវបានគេ(អល់ឡោះ)បញ្ជូនទៅកាន់ក្រុមដែលប្រព្រឹត្តអំពើអាក្រក់ ។

إِلَّآ ءَالَ لُوطٍ إِنَّا لَمُنَجُّوهُمۡ أَجۡمَعِينَ ﴿٥٩﴾

៥៩-លើកលែងតែបណ្តាអ្នកដែលតាមលូតប៉ុណ្ណោះ ។ ពិតប្រាកដណាស់ យើងគឺជាអ្នកសង្គ្រោះពួកគេទាំងអស់គ្នា ។

إِلَّا ٱمۡرَأَتَهُۥ قَدَّرۡنَآ إِنَّهَا لَمِنَ ٱلۡغَٰبِرِينَ ﴿٦٠﴾

៦០-លើកលែងតែភរិយារបស់គាត់ ដែលយើងបានកំណត់រួចថា ពិតប្រាកដណាស់ នាងស្ថិតក្នុងចំណោមពួកដែលត្រូវគេបោះបង់ចោល(ឱ្យរងទារុណកម្ម) ។

فَلَمَّا جَآءَ ءَالَ لُوطٍ ٱلۡمُرۡسَلُونَ ﴿٦١﴾

៦១-ហើយនៅពេលដែលបណ្តាអ្នកនាំសារ(ម៉ាឡាអ៊ីកាត់)បានមកដល់ពួកដែលតាមលូត ។

قَالَ إِنَّكُمۡ قَوۡمٞ مُّنكَرُونَ ﴿٦٢﴾

៦២-គាត់(លូត)ក៏បានពោលថា: ពិតប្រាកដណាស់ ពួកអ្នក(ម៉ាឡាអ៊ីកាត់)ជាក្រុមដែលគេមិនស្គាល់ឡើយ ។

قَالُواْ بَلۡ جِئۡنَٰكَ بِمَا كَانُواْ فِيهِ يَمۡتَرُونَ ﴿٦٣﴾

៦៣-ពួកគេ(ម៉ាឡាអ៊ីកាត់)បានតបថា: ផ្ទុយទៅវិញយើងបាននាំមកឱ្យអ្នកនូវអ្វី(ទារុណកម្ម)ដែលពួកគេបានសង្ស័យចំពោះវា ។

وَأَتَيۡنَٰكَ بِٱلۡحَقِّ وَإِنَّا لَصَٰدِقُونَ ﴿٦٤﴾

៦៤-ហើយយើងបាននាំមកឱ្យអ្នកនូវការពិត ។ ហើយពិតប្រាកដណាស់ ពួកយើងគឺជាអ្នកដែលត្រឹមត្រូវ ។

فَأَسۡرِ بِأَهۡلِكَ بِقِطۡعٖ مِّنَ ٱلَّيۡلِ وَٱتَّبِعۡ أَدۡبَٰرَهُمۡ وَلَا يَلۡتَفِتۡ مِنكُمۡ أَحَدٞ وَٱمۡضُواْ حَيۡثُ تُؤۡمَرُونَ ﴿٦٥﴾

៦៥-ដូច្នេះ ចូរអ្នកនាំគ្រួសាររបស់អ្នកចាកចេញ(ពីភូមិនេះ)នៅពាក់កណ្តាលយប់ ហើយអ្នកត្រូវដើរតាមក្រោយពួកគេ ហើយកុំឱ្យអ្នកណាម្នាក់ក្នុងចំណោមពួកអ្នកងាកមើលក្រោយឱ្យសោះ ហើយចូរពួកអ្នកបន្តដំណើរទៅកន្លែងណាដែលត្រូវគេបញ្ជាពួកអ្នក ។

وَقَضَيۡنَآ إِلَيۡهِ ذَٰلِكَ ٱلۡأَمۡرَ أَنَّ دَابِرَ هَٰٓؤُلَآءِ

៦៦-ហើយយើងបានផ្តល់ដំណឹងដល់គាត់(លូត)ចំពោះរឿងនោះថា: ពិតប្រាកដណាស់ ពួកគេនឹងត្រូវគេកំទេចទាំងពូជនៅ

مَقْطُوعٌ مُّصْبِحِينَ ﴿٦٦﴾

វេលាទៀបភ្លឺ។

وَجَآءَ أَهْلُ ٱلْمَدِينَةِ يَسْتَبْشِرُونَ ﴿٦٧﴾

៦៧-ហើយប្រជាជននៅក្នុងទីក្រុងបានមកដល់(លូត) ដោយពួកគេសប្បាយរីករាយ។

قَالَ إِنَّ هَٰٓؤُلَآءِ ضَيْفِى فَلَا تَفْضَحُونِ ﴿٦٨﴾

៦៨-គាត់បានពោលថា: ពិតប្រាកដណាស់ ពួកគេទាំងអស់គ្នានេះជាភ្ញៀវរបស់ខ្ញុំ។ ដូច្នេះ ចូរពួកអ្នកកុំធ្វើឱ្យខ្ញុំអាម៉ាស់ឱ្យសោះ។

وَٱتَّقُواْ ٱللَّهَ وَلَا تُخْزُونِ ﴿٦٩﴾

៦៩-ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ និងកុំធ្វើឱ្យខ្ញុំអាប់ឱនឱ្យសោះ។

قَالُوٓاْ أَوَلَمْ نَنْهَكَ عَنِ ٱلْعَٰلَمِينَ ﴿٧٠﴾

៧០-ពួកគេ(ពួកប្រឆាំងនឹងលូត) បាននិយាយថា: តើពួកយើងមិនបានហាមឃាត់អ្នក(អំពីការទទួលភ្ញៀវណាម្នាក់) លើពិភពលោកនេះទេឬ?

قَالَ هَٰٓؤُلَآءِ بَنَاتِىٓ إِن كُنتُمْ فَٰعِلِينَ ﴿٧١﴾

៧១-គាត់បានពោលថា: គេទាំងនេះ គឺជាកូនស្រីរបស់យើង (ចូររៀបការនឹងពួកនាងចុះ) ប្រសិនបើពួកអ្នកចង់ធ្វើដូច្នោះ។

لَعَمْرُكَ إِنَّهُمْ لَفِى سَكْرَتِهِمْ يَعْمَهُونَ ﴿٧٢﴾

៧២-(អល់ឡោះមានបន្ទូលថា) យើងស្បថនឹងជីវិតរបស់អ្នក (មូហាំម៉ាត់) ពិតប្រាកដណាស់ ពួកគេគឺស្ថិតនៅក្នុងភាពវង្វេងរបស់ពួកគេដោយពួកគេមិនដឹងអ្វីឡើយ។

فَأَخَذَتْهُمُ ٱلصَّيْحَةُ مُشْرِقِينَ ﴿٧٣﴾

៧៣-ដូច្នេះ សំម្រែកយ៉ាងខ្លាំងបានឆក់យកជីវិតពួកគេនៅវេលាថ្ងៃរះ។

فَجَعَلْنَا عَٰلِيَهَا سَافِلَهَا وَأَمْطَرْنَا عَلَيْهِمْ حِجَارَةً مِّن سِجِّيلٍ ﴿٧٤﴾

៧៤-ដូច្នេះយើងបានធ្វើឱ្យភូមិស្រុកនោះ(ភូមិសាដូមនៅប៉ាឡេស្ទីន) ក្រឡាប់ពីលើចុះក្រោម ហើយយើងបានបញ្ចុះភ្លៀងថ្មពីដីដុតទៅលើពួកគេ។

إِنَّ فِى ذَٰلِكَ لَءَايَٰتٍ لِّلْمُتَوَسِّمِينَ ﴿٧٥﴾

៧៥-ពិតប្រាកដណាស់ ចំពោះរឿងទាំងនោះគឺជាភស្តុតាងសម្រាប់បណ្តាអ្នកដែលមើលដោយពិចារណា។

وَإِنَّهَا لَبِسَبِيلٍ مُّقِيمٍ ﴿٧٦﴾

៧៦-ហើយពិតប្រាកដណាស់វា(ទីក្រុងសាដូម) នោះគឺស្ថិតនៅចំផ្លូវធំ(ដែលអ្នកដំណើរមើលឃើញវា)។

إِنَّ فِى ذَٰلِكَ لَءَايَةً لِّلْمُؤْمِنِينَ ﴿٧٧﴾

៧៧-ពិតប្រាកដណាស់ នៅក្នុងរឿងទាំងនោះ គឺជាភស្តុតាងមួយសម្រាប់បណ្តាអ្នកដែលមានជំនឿ។

وَإِن كَانَ أَصۡحَٰبُ ٱلۡأَيۡكَةِ لَظَٰلِمِينَ ﴿٧٨﴾

៧៨-ហើយពិតប្រាកដណាស់ ពួកដែលរស់នៅក្នុងព្រៃ(ប្រជាជនស៊ូអែប)គឺជាពួកដែលបំពាន។

فَٱنتَقَمۡنَا مِنۡهُمۡ وَإِنَّهُمَا لَبِإِمَامٖ مُّبِينٖ ﴿٧٩﴾

៧៩-ហើយយើងក៏បានផ្តន្ទាទោសចំពោះពួកគេ(ប្រជាជនរបស់ស៊ូអែប)។ ហើយពិតប្រាកដណាស់ កន្លែងទាំងពីរ(កន្លែងរបស់ប្រជាជនលូត និងស៊ូអែប)នោះ គឺស្ថិតនៅតាមផ្លូវធំមួយដ៏ច្បាស់លាស់។

وَلَقَدۡ كَذَّبَ أَصۡحَٰبُ ٱلۡحِجۡرِ ٱلۡمُرۡسَلِينَ ﴿٨٠﴾

៨០-ហើយជាការពិតណាស់ ពួក(សាមូដ)ដែលរស់នៅដោយចោះភ្នំធ្វើជាផ្ទះបានបដិសេធចំពោះបណ្តាអ្នកនាំសារ។

وَءَاتَيۡنَٰهُمۡ ءَايَٰتِنَا فَكَانُواْ عَنۡهَا مُعۡرِضِينَ ﴿٨١﴾

៨១-ហើយយើងបានផ្តល់ភស្តុតាងរបស់យើងជាច្រើនដល់ពួកគេ ក៏ប៉ុន្តែពួកគេបែរជាបានងាកចេញពីវាទៅវិញ។

وَكَانُواْ يَنۡحِتُونَ مِنَ ٱلۡجِبَالِ بُيُوتًا ءَامِنِينَ ﴿٨٢﴾

៨២-ហើយពួកគេបានចោះភ្នំធ្វើជាលំនៅដ្ឋានដោយសុវត្ថិភាព។

فَأَخَذَتۡهُمُ ٱلصَّيۡحَةُ مُصۡبِحِينَ ﴿٨٣﴾

៨៣-ហើយសម្រែកដ៏ខ្លាំងបានឆក់យកជីវិតពួកគេនៅវេលាទៀបភ្លឺ។

فَمَآ أَغۡنَىٰ عَنۡهُم مَّا كَانُواْ يَكۡسِبُونَ ﴿٨٤﴾

៨៤-ហើយអ្វីដែលពួកគេបានធ្វើកន្លងមកមិនអាចការពារពួកគេ(ពីទារុណកម្ម)បានឡើយ។

وَمَا خَلَقۡنَا ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ وَمَا بَيۡنَهُمَآ إِلَّا بِٱلۡحَقِّۗ وَإِنَّ ٱلسَّاعَةَ لَأٓتِيَةٞۖ فَٱصۡفَحِ ٱلصَّفۡحَ ٱلۡجَمِيلَ ﴿٨٥﴾

៨៥-ហើយយើងមិនបានបង្កើតមេឃជាច្រើនជាន់ និងផែនដី ហើយនិងអ្វីៗដែលនៅចន្លោះវាទាំងពីរនោះឡើយ លើកលែងតែមានមូលហេតុត្រឹមត្រូវប៉ុណ្ណោះ។ ហើយពិតប្រាកដណាស់ថ្ងៃបរលោកនឹងឈានមកដល់ជាមិនខាន។ ហេតុនេះចូរអ្នក(មូហាំម៉ាត់)អនុគ្រោះ(ដល់ពួកមូស្ហ្ស៊ីរីគីន)នូវការអនុគ្រោះមួយដ៏ល្អប្រពៃ។

إِنَّ رَبَّكَ هُوَ ٱلۡخَلَّٰقُ ٱلۡعَلِيمُ ﴿٨٦﴾

៨៦-ពិតប្រាកដណាស់ ម្ចាស់របស់អ្នក ទ្រង់គឺជាអ្នកបង្កើតមហាដឹង។

وَلَقَدۡ ءَاتَيۡنَٰكَ سَبۡعٗا مِّنَ ٱلۡمَثَانِي وَٱلۡقُرۡءَانَ ٱلۡعَظِيمَ ﴿٨٧﴾

៨៧-ហើយជាការពិតណាស់ យើងបានផ្តល់ឱ្យអ្នក(មូហាំម៉ាត់)ប្រាំពីរឃ្លានៃអាល់ម៉ាសានី(ស៊ូរ៉ោះអាល់ហ្វាទីហះ)រួមជាមួយនឹងគម្ពីរគួរអានដ៏ឧត្តុង្គឧត្តម។

لَا تَمُدَّنَّ عَيْنَيْكَ إِلَىٰ مَا مَتَّعْنَا بِهِۦٓ أَزْوَٰجًا مِّنْهُمْ وَلَا تَحْزَنْ عَلَيْهِمْ وَٱخْفِضْ جَنَاحَكَ لِلْمُؤْمِنِينَ ﴿٨٨﴾

៨៨-ហើយអ្នក(មូហាំម៉ាត់)កុំសម្លឹងភ្នែកទាំងពីររបស់អ្នកមើលទៅកាន់អ្វី(ទ្រព្យសម្បត្តិ បុណ្យសក្តិ)ដែលយើងបានផ្តល់ឱ្យក្រុមមួយចំនួនក្នុងចំណោមពួកគេ(ពួកគ្មានជំនឿ) ហើយចូរអ្នកកុំពិបាកចិត្តចំពោះពួកគេឱ្យសោះ។ ហើយចូរអ្នកលំទោនកាយរបស់អ្នកចំពោះបណ្តាអ្នកដែលមានជំនឿចុះ។

وَقُلْ إِنِّىٓ أَنَا ٱلنَّذِيرُ ٱلْمُبِينُ ﴿٨٩﴾

៨៩-ហើយចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពិតប្រាកដណាស់ ខ្ញុំជាអ្នកដាស់តឿនព្រមានយ៉ាងច្បាស់លាស់។

كَمَآ أَنزَلْنَا عَلَى ٱلْمُقْتَسِمِينَ ﴿٩٠﴾

៩០-ក៏ដូចជាយើងបានបញ្ចុះ(ទារុណកម្ម)ទៅលើពួកដែលបែងចែក(ពួកអារ៉ាប់គ្មានជំនឿ ពួកយ៉ាហ៊ូទី និងណាសរ៉នី)ផងដែរ។

ٱلَّذِينَ جَعَلُوا۟ ٱلْقُرْءَانَ عِضِينَ ﴿٩١﴾

៩១-គឺពួកដែលបានបែងចែកគម្ពីរគួរអានទៅជាផ្នែកៗ(មានជំនឿផ្នែកខ្លះ បដិសេធផ្នែកខ្លះ) ។

فَوَرَبِّكَ لَنَسْـَٔلَنَّهُمْ أَجْمَعِينَ ﴿٩٢﴾

៩២-ដូច្នេះ ម្ចាស់របស់អ្នកបានស្បថថាៈ (ឱមូហាំម៉ាត់!)យើងពិតជានឹងសួរពួកគេទាំងអស់គ្នា

عَمَّا كَانُوا۟ يَعْمَلُونَ ﴿٩٣﴾

៩៣-អំពីអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តជាមិនខាន។

فَٱصْدَعْ بِمَا تُؤْمَرُ وَأَعْرِضْ عَنِ ٱلْمُشْرِكِينَ ﴿٩٤﴾

៩៤-ហេតុនេះ ចូរអ្នកអំពាវនាវដោយចំហនូវអ្វី(សាររបស់អល់ឡោះ)ដែលគេ(អល់ឡោះ)បញ្ជា ហើយចូរអ្នកងាកចេញពីពួកមូស្ហរីគីន។

إِنَّا كَفَيْنَـٰكَ ٱلْمُسْتَهْزِءِينَ ﴿٩٥﴾

៩៥-ពិតប្រាកដណាស់ យើងបានបំពេញបំណងឱ្យអ្នក(មូហាំម៉ាត់)ទៅលើពួកដែលសើចចំអកនោះ។

ٱلَّذِينَ يَجْعَلُونَ مَعَ ٱللَّهِ إِلَـٰهًا ءَاخَرَ ۚ فَسَوْفَ يَعْلَمُونَ ﴿٩٦﴾

៩៦-គឺជាពួកដែលបង្កើតម្ចាស់ផ្សេងដើម្បីគោរពសក្ការៈរួមជាមួយអល់ឡោះ។ ដូច្នេះ ពួកគេគង់តែនឹងដឹង។

وَلَقَدْ نَعْلَمُ أَنَّكَ يَضِيقُ صَدْرُكَ بِمَا يَقُولُونَ ﴿٩٧﴾

៩៧-ហើយជាការពិតណាស់ យើងដឹងថាអ្នក(មូហាំម៉ាត់) ពិតជាតឹងទ្រូងណាស់ចំពោះអ្វីដែលពួកគេនិយាយ។

فَسَبِّحْ بِحَمْدِ رَبِّكَ وَكُن مِّنَ ٱلسَّـٰجِدِينَ ﴿٩٨﴾

៩៨-ហេតុនេះ ចូរអ្នកលើកតម្កើងដោយការសរសើរចំពោះម្ចាស់របស់អ្នក ហើយចូរអ្នកស្ថិតក្នុងចំណោមអ្នកដែលស៊ូជូត

(ថ្វាយបង្គំ)។

៩៩-ហើយចូរអ្នកគោរពសក្ការៈចំពោះម្ចាស់របស់អ្នក រហូតដល់សេចក្តីស្លាប់មកដល់អ្នកចុះ។

وَٱعۡبُدۡ رَبَّكَ حَتَّىٰ يَأۡتِيَكَ ٱلۡيَقِينُ ﴿٩٩﴾

## ជំពូកអាន់ណះល៍

سورة النحل

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-បទបញ្ជារបស់អល់ឡោះ(ថ្ងៃបរលោក)ជិតបានមកដល់ហើយ ដូច្នេះចូរពួកអ្នកកុំប្រញាប់ចង់ឱ្យវាមកដល់ពេក។ ទ្រង់មហាបរិសុទ្ធ និងខ្ពង់ខ្ពស់បំផុតអំពីអ្វីដែលពួកគេកំពុងធ្វើស្ហ៊ីរិកនោះ។

أَتَىٰٓ أَمۡرُ ٱللَّهِ فَلَا تَسۡتَعۡجِلُوهُۚ سُبۡحَٰنَهُۥ وَتَعَٰلَىٰ عَمَّا يُشۡرِكُونَ ﴿١﴾

២-ទ្រង់បញ្ចុះម៉ាឡាអ៊ីកាត់ដោយនាំវ៉ាហ៊ីតាមបទបញ្ជារបស់ទ្រង់ទៅចំពោះជនណាដែលទ្រង់មានចេតនាក្នុងចំណោមខ្ញុំរបស់ទ្រង់(ដោយបន្ទូលថា) ចូរពួកអ្នកដាស់តឿនព្រមាន(មនុស្សលោក)ថាៈ ពិតប្រាកដណាស់ គ្មានម្ចាស់ណាផ្សេងដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីយើងឡើយ ហេតុនេះចូរពួកអ្នកកោតខ្លាចយើង។

يُنَزِّلُ ٱلۡمَلَٰٓئِكَةَ بِٱلرُّوحِ مِنۡ أَمۡرِهِۦ عَلَىٰ مَن يَشَآءُ مِنۡ عِبَادِهِۦٓ أَنۡ أَنذِرُوٓاْ أَنَّهُۥ لَآ إِلَٰهَ إِلَّآ أَنَا۠ فَٱتَّقُونِ ﴿٢﴾

៣-ទ្រង់បានបង្កើតមេឃជាច្រើនជាន់ និងផែនដីដោយ ពិតប្រាកដ។ ទ្រង់ខ្ពង់ខ្ពស់បំផុតអំពីអ្វីដែលពួកគេកំពុងធ្វើស្ហ៊ីរិកនោះ។

خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ بِٱلۡحَقِّۚ تَعَٰلَىٰ عَمَّا يُشۡرِكُونَ ﴿٣﴾

៤-ទ្រង់បានបង្កើតមនុស្សលោកពីទឹកកាម តែគេបែរជាក្លាយទៅជាអ្នកដែលរឹងរូសប្រឆាំងដ៏ពិតប្រាកដទៅវិញ។

خَلَقَ ٱلۡإِنسَٰنَ مِن نُّطۡفَةٖ فَإِذَا هُوَ خَصِيمٞ مُّبِينٞ ﴿٤﴾

៥-ហើយសត្វពាហនៈជាច្រើនដែលទ្រង់បានបង្កើតវាសម្រាប់ពួកអ្នក ដែលសត្វទាំងនោះ(មានរោមធ្វើជាសំលៀកបំពាក់)ផ្តល់ភាពកក់ក្តៅ ហើយផ្តល់ផលប្រយោជន៍ជាច្រើន ហើយវាមួយចំនួនពួកអ្នកក៏អាចទទួលទានបានផងដែរ។

وَٱلۡأَنۡعَٰمَ خَلَقَهَاۗ لَكُمۡ فِيهَا دِفۡءٞ وَمَنَٰفِعُ وَمِنۡهَا تَأۡكُلُونَ ﴿٥﴾

៦-ហើយនៅក្នុងនោះដែរ វាក៏ផ្តល់សោភ័ណភាពដល់ពួកអ្នក នៅពេលដែលពួកអ្នកនាំវាត្រឡប់មកក្រោលវិញនៅពេលល្ងាច និងនៅពេលដែលពួកអ្នកនាំវាទៅឃ្វាលវិញនាពេលព្រឹក។

وَلَكُمۡ فِيهَا جَمَالٌ حِينَ تُرِيحُونَ وَحِينَ تَسۡرَحُونَ ﴿٦﴾

៧-ហើយវាថែមទាំងដឹកជញ្ជូនទំនិញធ្ងន់ៗរបស់ពួកអ្នកឆ្ពោះ

وَتَحۡمِلُ أَثۡقَالَكُمۡ إِلَىٰ بَلَدٖ لَّمۡ تَكُونُواْ بَٰلِغِيهِ

إِلَّا بِشِقِّ ٱلۡأَنفُسِۚ إِنَّ رَبَّكُمۡ لَرَءُوفٞ
رَّحِيمٞ ﴿٧﴾

ទៅកាន់ប្រទេសមួយដែលពួកអ្នកអាចទៅដល់ទាំងការលំបាកខ្លួន។ ពិតប្រាកដណាស់ ម្ចាស់របស់ពួកអ្នកមហាករុណា មហាអាណិតស្រឡាញ់។

وَٱلۡخَيۡلَ وَٱلۡبِغَالَ وَٱلۡحَمِيرَ لِتَرۡكَبُوهَا
وَزِينَةٗۚ وَيَخۡلُقُ مَا لَا تَعۡلَمُونَ ﴿٨﴾

៨-ហើយ(ទ្រង់បានបង្កើត)សត្វសេះ និងសត្វសេះទេស ហើយនិងសត្វលាដើម្បីឱ្យពួកអ្នកជិះវា និងជាការលំអ។ ហើយទ្រង់បង្កើតអ្វីៗផ្សេងទៀតដែលពួកអ្នកមិនដឹង។

وَعَلَى ٱللَّهِ قَصۡدُ ٱلسَّبِيلِ وَمِنۡهَا جَآئِرٞۚ وَلَوۡ
شَآءَ لَهَدَىٰكُمۡ أَجۡمَعِينَ ﴿٩﴾

៩-ហើយតួនាទីរបស់អល់ឡោះ គឺការបង្ហាញមាគ៌ាដែលត្រឹមត្រូវ ប៉ុន្តែមានមាគ៌ាខ្លះងាករេ(ដូចជាមាគ៌ារបស់ពួកអារ៉ាប់គ្មានជំនឿ យ៉ាហ៊ូទី និងណាសរ៉នី)។ ហើយប្រសិនបើទ្រង់មានចេតនាទ្រង់ពិតជាចង្អុលបង្ហាញពួកអ្នកទាំងអស់គ្នា ។

هُوَ ٱلَّذِيٓ أَنزَلَ مِنَ ٱلسَّمَآءِ مَآءٗۖ لَّكُم مِّنۡهُ
شَرَابٞ وَمِنۡهُ شَجَرٞ فِيهِ تُسِيمُونَ ﴿١٠﴾

១០-ទ្រង់ជាអ្នកដែលបានបញ្ចុះទឹកភ្លៀងពីលើមេឃសម្រាប់ពួកអ្នក ដែលវាមួយចំនួនសម្រាប់ផឹក និងវាមួយចំនួនទៀតសម្រាប់រុក្ខជាតិ ដែលក្នុង(កន្លែងរុក្ខជាតិដុះ)នោះ ពួកអ្នកអាចឃ្វាលសត្វផងដែរ។

يُنۢبِتُ لَكُم بِهِ ٱلزَّرۡعَ وَٱلزَّيۡتُونَ وَٱلنَّخِيلَ
وَٱلۡأَعۡنَٰبَ وَمِن كُلِّ ٱلثَّمَرَٰتِۚ إِنَّ فِي
ذَٰلِكَ لَأٓيَةٗ لِّقَوۡمٖ يَتَفَكَّرُونَ ﴿١١﴾

១១-ដោយសារទឹកភ្លៀងនោះ ទ្រង់ធ្វើឱ្យដុះចេញនូវដំណាំជាច្រើន និងអូលីវ និងល្មើ និងទំពាំងបាយជូរ ហើយនិងផលានុផលគ្រប់ប្រភេទសម្រាប់ពួកអ្នក។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងសម្រាប់ក្រុមដែលចេះគិតពិចារណា។

وَسَخَّرَ لَكُمُ ٱلَّيۡلَ وَٱلنَّهَارَ وَٱلشَّمۡسَ
وَٱلۡقَمَرَۖ وَٱلنُّجُومُ مُسَخَّرَٰتُۢ بِأَمۡرِهِۦٓۚ إِنَّ
فِي ذَٰلِكَ لَأٓيَٰتٖ لِّقَوۡمٖ يَعۡقِلُونَ ﴿١٢﴾

១២-ហើយទ្រង់បានបង្កើតសម្រាប់ពួកអ្នកឱ្យមានពេលយប់ និងពេលថ្ងៃ និងព្រះអាទិត្យ ហើយនិងព្រះច័ន្ទ ព្រមទាំងហ្វូងតារាត្រូវបានគេ(អល់ឡោះ)ឱ្យធ្វើដំណើរតាមបទបញ្ជារបស់ទ្រង់។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងៗសម្រាប់ក្រុមដែលស្វែងយល់។

وَمَا ذَرَأَ لَكُمۡ فِي ٱلۡأَرۡضِ مُخۡتَلِفًا
أَلۡوَٰنُهُۥٓۚ إِنَّ فِي ذَٰلِكَ لَأٓيَةٗ لِّقَوۡمٖ
يَذَّكَّرُونَ ﴿١٣﴾

១៣-ហើយអ្វីៗដែលទ្រង់បានបង្កើតឱ្យពួកអ្នកនៅលើផែនដីគឺមានពណ៌សម្បុររបស់វាខុសៗគ្នា។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះជាភស្តុតាងៗសម្រាប់ក្រុមដែលចងចាំ។

وَهُوَ ٱلَّذِي سَخَّرَ ٱلۡبَحۡرَ لِتَأۡكُلُواْ مِنۡهُ

១៤-ហើយទ្រង់ជាអ្នកដែលបានបង្កើតឱ្យមានសមុទ្រ ដើម្បីឱ្យ

لَحۡمٗا طَرِيّٗا وَتَسۡتَخۡرِجُواْ مِنۡهُ حِلۡيَةٗ تَلۡبَسُونَهَا وَتَرَى ٱلۡفُلۡكَ مَوَاخِرَ فِيهِ وَلِتَبۡتَغُواْ مِن فَضۡلِهِۦ وَلَعَلَّكُمۡ تَشۡكُرُونَ ﴿١٤﴾

ពួកអ្នកបានទទួលទានពីវានូវសាច់ស្រស់ៗ ហើយពួកអ្នកអាចយកចេញពីវានូវគ្រឿងលំអដើម្បីពាក់វា ហើយអ្នកក៏មើលឃើញសំពៅអណ្តែតនៅលើវា និងដើម្បីឱ្យពួកអ្នកស្វែងរកនូវសេចក្តីប្រោសប្រទានពីទ្រង់។ ហើយសង្ឃឹមថា ពួកអ្នកនឹងដឹងគុណ(ចំពោះអល់ឡោះ)។

وَأَلۡقَىٰ فِي ٱلۡأَرۡضِ رَوَٰسِيَ أَن تَمِيدَ بِكُمۡ وَأَنۡهَٰرٗا وَسُبُلٗا لَّعَلَّكُمۡ تَهۡتَدُونَ ﴿١٥﴾

១៥-ហើយទ្រង់បានបោះភ្ជាប់នៅលើផែនដីនូវភ្នំជាច្រើន ដើម្បីកុំឱ្យវារញ្ជួយដល់ពួកអ្នក ហើយ(ទ្រង់បានបង្កើត)ទន្លេ និងផ្លូវជាច្រើន ដើម្បីពួកអ្នកធ្វើជាត្រីវិស័យ។

وَعَلَٰمَٰتٖۚ وَبِٱلنَّجۡمِ هُمۡ يَهۡتَدُونَ ﴿١٦﴾

១៦-និងមានសញ្ញាសំគាល់ជាច្រើនទៀត(នៅពេលថ្ងៃ)។ ហើយចំពោះផ្កាយវិញ(ជាសញ្ញានៅពេលយប់)ដែលពួកគេធ្វើជាត្រីវិស័យ។

أَفَمَن يَخۡلُقُ كَمَن لَّا يَخۡلُقُۚ أَفَلَا تَذَكَّرُونَ ﴿١٧﴾

១៧-ដូច្នេះ តើអ្នកដែលបង្កើត ដូចនឹងអ្នកដែលមិនបានបង្កើតឬ? តើពួកអ្នកមិនចងចាំទេឬ?

وَإِن تَعُدُّواْ نِعۡمَةَ ٱللَّهِ لَا تُحۡصُوهَآۗ إِنَّ ٱللَّهَ لَغَفُورٞ رَّحِيمٞ ﴿١٨﴾

១៨-ហើយប្រសិនបើពួកអ្នករាប់ចំនួននៀកម៉ាត់របស់អល់ឡោះ គឺពួកអ្នកមិនអាចរាប់វាអស់ឡើយ។ ពិតប្រាកដណាស់ អល់ឡោះគឺមហាអភ័យទោស មហាអាណិតស្រឡាញ់។

وَٱللَّهُ يَعۡلَمُ مَا تُسِرُّونَ وَمَا تُعۡلِنُونَ ﴿١٩﴾

១៩-ហើយអល់ឡោះដឹងច្បាស់នូវអ្វីដែលពួកអ្នកលាក់បាំង និងអ្វីដែលពួកអ្នកលាតត្រដាង។

وَٱلَّذِينَ يَدۡعُونَ مِن دُونِ ٱللَّهِ لَا يَخۡلُقُونَ شَيۡـٔٗا وَهُمۡ يُخۡلَقُونَ ﴿٢٠﴾

២០-ហើយព្រះនានាដែលពួកគេ(ពួកមូស្ហរីគីន)បួងសួងសុំក្រៅពីអល់ឡោះនោះ គឺពួកវា(ព្រះនានា)មិនអាចបង្កើតអ្វីបានទាល់តែសោះ តែពួកវាវិញទេដែលត្រូវគេ(មនុស្សលោក)បង្កើតនោះ។

أَمۡوَٰتٌ غَيۡرُ أَحۡيَآءٖۖ وَمَا يَشۡعُرُونَ أَيَّانَ يُبۡعَثُونَ ﴿٢١﴾

២១-(ព្រះទាំងអស់នោះ)គឺស្លាប់ មិនមានជីវិតឡើយ។ ហើយពួកវាក៏មិនដឹងថា ពួកគេ(ពួកដែលគោរពពួកវា)ត្រូវគេធ្វើឱ្យរស់ឡើងវិញនៅពេលណាដែរ។

إِلَٰهُكُمۡ إِلَٰهٞ وَٰحِدٞۚ فَٱلَّذِينَ لَا يُؤۡمِنُونَ

២២-ម្ចាស់ដែលត្រូវពួកអ្នកគោរពសក្ការៈដ៏ពិតប្រាកដនោះ គឺជាម្ចាស់តែមួយគត់(អល់ឡោះ)។ តែពួកដែលគ្មានជំនឿនឹងថ្ងៃ

بِٱلۡأٓخِرَةِ قُلُوبُهُم مُّنكِرَةٞ وَهُم مُّسۡتَكۡبِرُونَ ٢٢

បរលោកនោះ គឺចិត្តរបស់ពួកគេបដិសេធដោយពួកគេថែមទាំងក្រអឺតក្រទមទៀតផង ។

لَا جَرَمَ أَنَّ ٱللَّهَ يَعۡلَمُ مَا يُسِرُّونَ
وَمَا يُعۡلِنُونَۚ إِنَّهُۥ لَا يُحِبُّ
ٱلۡمُسۡتَكۡبِرِينَ ٢٣

២៣-គ្មានការសង្ស័យឡើយ ពិតប្រាកដណាស់អល់ឡោះដឹងនូវអ្វីដែលពួកគេលាក់បាំង និងអ្វីដែលពួកគេលាតត្រដាង ។ ពិតប្រាកដណាស់ ទ្រង់មិនស្រឡាញ់ពួកដែលក្រអឺតក្រទមនោះឡើយ ។

وَإِذَا قِيلَ لَهُم مَّاذَآ أَنزَلَ رَبُّكُمۡ قَالُوٓاْ أَسَٰطِيرُ
ٱلۡأَوَّلِينَ ٢٤

២៤-ហើយនៅពេលដែលមានគេសួរពួកគេ( ពួកមូស្ហ្រីគីន) ថា: តើម្ចាស់របស់ពួកអ្នកបានបញ្ចុះអ្វី( ទៅឱ្យមូហាំម៉ាត់) ? ពួកគេបានតបថា: វាគឺជារឿងព្រេងនិទានតែប៉ុណ្ណោះ ។

لِيَحۡمِلُوٓاْ أَوۡزَارَهُمۡ كَامِلَةٗ يَوۡمَ ٱلۡقِيَٰمَةِ وَمِنۡ
أَوۡزَارِ ٱلَّذِينَ يُضِلُّونَهُم بِغَيۡرِ عِلۡمٍۗ أَلَا سَآءَ
مَا يَزِرُونَ ٢٥

២៥-( ពាក្យសំដីនោះ) ពួកគេនឹងរែកបន្ទុកនូវបាបកម្មរបស់ពួកគេយ៉ាងពេញបន្ទុកនៅថ្ងៃបរលោក និងរែកបាបកម្មរបស់ពួកដែលពួកគេដឹកនាំទៅរកផ្លូវខុសដោយអវិជ្ជាផងដែរ ។ ចូរដឹងថា! អ្វីដែលពួកគេរែកនោះវាជាប្រការអាក្រក់បំផុត ។

قَدۡ مَكَرَ ٱلَّذِينَ مِن قَبۡلِهِمۡ فَأَتَى ٱللَّهُ
بُنۡيَٰنَهُم مِّنَ ٱلۡقَوَاعِدِ فَخَرَّ عَلَيۡهِمُ ٱلسَّقۡفُ
مِن فَوۡقِهِمۡ وَأَتَىٰهُمُ ٱلۡعَذَابُ مِنۡ حَيۡثُ لَا
يَشۡعُرُونَ ٢٦

២៦-ជាការពិតណាស់ ពួកដែលនៅសម័យមុនពួកគេ( ពួកមូស្ហ្រីគីន) ក៏បានប្រើល្បិចបោកប្រាស់( អ្នកនាំសាររបស់ពួកគេ) ដែរ ។ តែអល់ឡោះបានកំទេចគ្រឹះនៃផ្ទះសំបែងរបស់ពួកគេ ហើយដំបូលក៏បានធ្លាក់សង្កត់ទៅលើពួកគេ ហើយនៅពេលនោះទារុណ-កម្មបានមកដល់ពួកគេ ខណៈដែលពួកគេមិនដឹងខ្លួន ។

ثُمَّ يَوۡمَ ٱلۡقِيَٰمَةِ يُخۡزِيهِمۡ وَيَقُولُ أَيۡنَ
شُرَكَآءِيَ ٱلَّذِينَ كُنتُمۡ تُشَٰٓقُّونَ فِيهِمۡۚ
قَالَ ٱلَّذِينَ أُوتُواْ ٱلۡعِلۡمَ إِنَّ ٱلۡخِزۡيَ ٱلۡيَوۡمَ
وَٱلسُّوٓءَ عَلَى ٱلۡكَٰفِرِينَ ٢٧

២៧-បន្ទាប់មកនៅថ្ងៃបរលោក ទ្រង់នឹងធ្វើឱ្យពួកគេអាម៉ាស់ ហើយទ្រង់នឹងមានបន្ទូលថា: តើឯណាទៅដៃគូរបស់យើងដែលពួកអ្នកធ្លាប់បានប្រឆាំង( នឹងអ្នកនាំសារនិងអ្នកមានជំនឿ) ដើម្បីពួកវានោះ? បណ្តាអ្នកដែលត្រូវបានគេផ្តល់ចំណេះវិជ្ជាឱ្យបាននិយាយថា: ជាការពិតណាស់ ភាពអាម៉ាស់ និងទារុណកម្មនៅថ្ងៃនេះគឺត្រូវធ្លាក់លើពួកដែលប្រឆាំង ។

ٱلَّذِينَ تَتَوَفَّىٰهُمُ ٱلۡمَلَٰٓئِكَةُ ظَالِمِيٓ أَنفُسِهِمۡۖ
فَأَلۡقَوُاْ ٱلسَّلَمَ مَا كُنَّا نَعۡمَلُ مِن سُوٓءِۭۚ بَلَىٰٓ
إِنَّ ٱللَّهَ عَلِيمُۢ بِمَا كُنتُمۡ تَعۡمَلُونَ ٢٨

២៨-ពួកដែលម៉ាឡាអ៊ីកាត់យកជីវិតរបស់ពួកគេ ខណៈដែលពួកគេបំពានដោយខ្លួនឯង ពេលនោះពួកគេសម្តែងការគោរពនិងប្រគល់ខ្លួន( ចំពោះអល់ឡោះ ដោយនិយាយកុហកថា) ពួកយើងមិនធ្លាប់បានប្រព្រឹត្តអំពើអាក្រក់ណាមួយឡើយ ។ ( ម៉ាឡាអ៊ីកាត់

បានតបវិញថា) មិនមែនដូច្នោះទេ! ពិតប្រាកដណាស់ អល់ឡោះដឹងទាំងអស់នូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត ។

فَٱدۡخُلُوٓاْ أَبۡوَٰبَ جَهَنَّمَ خَٰلِدِينَ فِيهَاۖ فَلَبِئۡسَ مَثۡوَى ٱلۡمُتَكَبِّرِينَ ﴿٢٩﴾

២៩-ហេតុនេះ ចូរពួកអ្នកចូលតាមទ្វារនានានៃនរកជើហាន់ណាំ ដោយពួកអ្នកនៅក្នុងនោះជាអមតៈ ។ ហើយកន្លែងរបស់ពួកដែលក្រអឺតក្រទមគឺអាក្រក់បំផុត ។

۞وَقِيلَ لِلَّذِينَ ٱتَّقَوۡاْ مَاذَآ أَنزَلَ رَبُّكُمۡۚ قَالُواْ خَيۡرٗاۗ لِّلَّذِينَ أَحۡسَنُواْ فِي هَٰذِهِ ٱلدُّنۡيَا حَسَنَةٞۚ وَلَدَارُ ٱلۡأٓخِرَةِ خَيۡرٞۚ وَلَنِعۡمَ دَارُ ٱلۡمُتَّقِينَ ﴿٣٠﴾

៣០-ហើយមានគេនិយាយទៅកាន់បណ្ដាអ្នកដែលកោតខ្លាចថាៈ តើម្ចាស់របស់ពួកអ្នកបានបញ្ចុះអ្វី( ទៅឱ្យមូហាំម៉ាត់)? ពួកគេបានឆ្លើយថាៈ គឺជារឿងល្អ ។ សម្រាប់បណ្ដាអ្នកដែលបានសាងអំពើល្អនៅលើលោកិយនេះ គឺទទួលបានផលល្អ ។ ហើយចំពោះលំនៅដ្ឋាននាថ្ងៃបរលោកវិញ គឺរឹតតែប្រសើរជាងនេះទៅទៀត ។ ហើយលំនៅដ្ឋាន( ឋានសួគ៌) របស់បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះនោះគឺពិតជាល្អប្រសើរបំផុត ។

جَنَّٰتُ عَدۡنٖ يَدۡخُلُونَهَا تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُۖ لَهُمۡ فِيهَا مَا يَشَآءُونَۚ كَذَٰلِكَ يَجۡزِي ٱللَّهُ ٱلۡمُتَّقِينَ ﴿٣١﴾

៣១-ពួកគេនឹងបានចូលទៅក្នុងឋានសួគ៌អាត់និនដែលមានទន្លេជាច្រើនហូរពីក្រោមវា ។ ពួកគេនឹងមានអ្វីៗគ្រប់បែបយ៉ាងដែលពួកគេប្រាថ្នានៅក្នុងនោះ ។ ដូច្នោះហើយអល់ឡោះតបស្នងដល់បណ្ដាអ្នកដែលកោតខ្លាចទ្រង់ ។

ٱلَّذِينَ تَتَوَفَّىٰهُمُ ٱلۡمَلَٰٓئِكَةُ طَيِّبِينَ يَقُولُونَ سَلَٰمٌ عَلَيۡكُمُ ٱدۡخُلُواْ ٱلۡجَنَّةَ بِمَا كُنتُمۡ تَعۡمَلُونَ ﴿٣٢﴾

៣២-បណ្ដាអ្នកដែលម៉ាឡាអ៊ីកាត់យកជីវិតរបស់ពួកគេ ខណៈដែលពួកគេជាអ្នកល្អបរិសុទ្ធ ដោយម៉ាឡាអ៊ីកាត់ពោល( ទៅកាន់ពួកគេ) ថាៈ សូមសុខសន្តិភាពកើតមានដល់ពួកអ្នក! ចូរពួកអ្នកចូលឋានសួគ៌ដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានសាងចុះ ។

هَلۡ يَنظُرُونَ إِلَّآ أَن تَأۡتِيَهُمُ ٱلۡمَلَٰٓئِكَةُ أَوۡ يَأۡتِيَ أَمۡرُ رَبِّكَۚ كَذَٰلِكَ فَعَلَ ٱلَّذِينَ مِن قَبۡلِهِمۡۚ وَمَا ظَلَمَهُمُ ٱللَّهُ وَلَٰكِن كَانُوٓاْ أَنفُسَهُمۡ يَظۡلِمُونَ ﴿٣٣﴾

៣៣-ពួកគេ( ពួកប្រឆាំង) គ្មានរង់ចាំអ្វីក្រៅពីម៉ាឡាអ៊ីកាត់មកដល់( ហូតយកជីវិត) ពួកគេ ឬបទបញ្ជា( ធ្វើទារុណកម្ម) នៃម្ចាស់របស់អ្នកមកដល់នោះឡើយ ។ ពួក( គ្មានជំនឿ) ដែលពីមុនពួកគេក៏បានធ្វើដូច្នោះដែរ ។ អល់ឡោះមិនបានធ្វើបាបពួកគេឡើយ ប៉ុន្តែពួកគេវិញទេដែលបានធ្វើបាបខ្លួនឯងនោះ ។

فَأَصَابَهُمۡ سَيِّـَٔاتُ مَا عَمِلُواْ وَحَاقَ بِهِم مَّا كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ﴿٣٤﴾

៣៤-ហើយអំពើអាក្រក់ទាំងឡាយដែលពួកគេបានប្រព្រឹត្តបានធ្លាក់លើពួកគេ ។ ហើយអ្វី( ទារុណកម្ម) ដែលពួកគេធ្លាប់បានសើចចំអកនឹងវានោះក៏បានហ៊ុមព័ទ្ធពួកគេ ។

وَقَالَ ٱلَّذِينَ أَشْرَكُواْ لَوْ شَآءَ ٱللَّهُ مَا عَبَدْنَا مِن دُونِهِۦ مِن شَيْءٍ نَّحْنُ وَلَآ ءَابَآؤُنَا وَلَا حَرَّمْنَا مِن دُونِهِۦ مِن شَيْءٍ ۚ كَذَٰلِكَ فَعَلَ ٱلَّذِينَ مِن قَبْلِهِمْ ۚ فَهَلْ عَلَى ٱلرُّسُلِ إِلَّا ٱلْبَلَٰغُ ٱلْمُبِينُ ﴿٣٥﴾

៣៥-ហើយពួកដែលបានធ្វើស្ហ៊ីរិកបាននិយាយថាៈ ប្រសិនបើអល់ឡោះមានចេតនានោះ ពួកយើងនិងជីដូនជីតារបស់ពួកយើងមិនបានគោរពសក្ការៈអ្វីមួយផ្សេងពីទ្រង់ឡើយ ។ ហើយពួកយើងក៏មិនបានហាមឃាត់(ខ្លួនឯង)នូវអ្វីមួយផ្សេងពីអ្វីដែលទ្រង់បានហាមឃាត់នោះដែរ ។ ពួក(គ្មានជំនឿ)ដែលពីមុនពួកគេក៏បានធ្វើដូច្នោះដែរ ។ ដូច្នេះ តួនាទីរបស់បណ្ដាអ្នកនាំសារគ្មានអ្វីក្រៅពីការផ្សព្វផ្សាយសារយ៉ាងច្បាស់លាស់នោះឡើយ ។

وَلَقَدْ بَعَثْنَا فِى كُلِّ أُمَّةٍ رَّسُولًا أَنِ ٱعْبُدُواْ ٱللَّهَ وَٱجْتَنِبُواْ ٱلطَّٰغُوتَ ۖ فَمِنْهُم مَّنْ هَدَى ٱللَّهُ وَمِنْهُم مَّنْ حَقَّتْ عَلَيْهِ ٱلضَّلَٰلَةُ ۚ فَسِيرُواْ فِى ٱلْأَرْضِ فَٱنظُرُواْ كَيْفَ كَانَ عَٰقِبَةُ ٱلْمُكَذِّبِينَ ﴿٣٦﴾

៣៦-ហើយជាការពិតណាស់ រាល់ប្រជាជាតិនីមួយៗយើងបានតែងតាំងអ្នកនាំសារម្នាក់ ដោយគេបង្គាប់ពួកគេឱ្យគោរពសក្ការៈចំពោះអល់ឡោះ និងចៀសវាងពីតហ្គូត ។ ហើយក្នុងចំណោមពួកគេមានអ្នក ដែលអល់ឡោះបានចង្អុលបង្ហាញ ហើយក្នុងចំណោមពួកគេក៏មានអ្នកដែលត្រូវទទួលនូវភាពវង្វេងដែរ ។ ហេតុនេះ ចូរពួកអ្នកធ្វើដំណើរនៅលើផែនដីនេះ ហើយចូរពួកអ្នកមើលចុះ ថាតើលទ្ធផលចុងក្រោយរបស់ពួកដែលបដិសេធនោះយ៉ាងដូចម្ដេច?

إِن تَحْرِصْ عَلَىٰ هُدَىٰهُمْ فَإِنَّ ٱللَّهَ لَا يَهْدِى مَن يُضِلُّ ۖ وَمَا لَهُم مِّن نَّٰصِرِينَ ﴿٣٧﴾

៣៧-ទោះបីជាអ្នក(មូហាំម៉ាត់)ព្យាយាមបង្ហាញផ្លូវល្អដល់ពួកគេ(ពួកមូស្ហរីគីន)យ៉ាងណាក៏ដោយ ក៏អល់ឡោះពិតជានឹងមិនចង្អុលបង្ហាញចំពោះអ្នកដែលទ្រង់ធ្វើឱ្យគេវង្វេងនោះដែរ ។ ហើយពួកគេនឹងពុំមានអ្នកជួយឡើយ ។

وَأَقْسَمُواْ بِٱللَّهِ جَهْدَ أَيْمَٰنِهِمْ ۙ لَا يَبْعَثُ ٱللَّهُ مَن يَمُوتُ ۚ بَلَىٰ وَعْدًا عَلَيْهِ حَقًّا وَلَٰكِنَّ أَكْثَرَ ٱلنَّاسِ لَا يَعْلَمُونَ ﴿٣٨﴾

៣៨-ពួកគេបានស្បថនឹងអល់ឡោះនូវពាក្យសម្បថយ៉ាងមោះមុតថាៈ អល់ឡោះនឹងមិនប្រោសអ្នកណាដែលស្លាប់ឱ្យរស់ឡើងវិញឡើយ ។ ផ្ទុយទៅវិញមិនដូច្នោះទេ ការសន្យារបស់ទ្រង់ចំពោះវា(ការប្រោស)គឺជាការពិត ក៏ប៉ុន្តែមនុស្សលោកភាគច្រើនមិនដឹងឡើយ ។

لِيُبَيِّنَ لَهُمُ ٱلَّذِى يَخْتَلِفُونَ فِيهِ وَلِيَعْلَمَ ٱلَّذِينَ كَفَرُوٓاْ أَنَّهُمْ كَانُواْ كَٰذِبِينَ ﴿٣٩﴾

៣៩-ដើម្បីទ្រង់បញ្ជាក់ទៅដល់ពួកគេដែលខ្វែងគំនិតគ្នានៅក្នុងរឿងនោះ ហើយក៏ដើម្បីឱ្យពួកដែលបានប្រឆាំងដឹងថាៈ ពិតប្រាកដណាស់ ពួកគេគឺជាពួកដែលធ្លាប់បានភូតកុហក ។

إِنَّمَا قَوْلُنَا لِشَيْءٍ إِذَآ أَرَدْنَٰهُ أَن نَّقُولَ لَهُۥ كُن فَيَكُونُ ﴿٤٠﴾

៤០-ពិតប្រាកដណាស់ បន្ទូលរបស់យើងទៅកាន់អ្វីមួយ ប្រសិនបើយើងមានបំណងឱ្យវាកើតនោះ យើងគ្រាន់តែមានបន្ទូលទៅកាន់វាថាៈ ចូរកើតចុះ វាក៏កើតឡើងភ្លាម ។

៤១-ហើយបណ្ដាអ្នកដែលបានភៀសខ្លួនក្នុងមាគ៌ារបស់អល់ឡោះ ក្រោយពីពួកគេត្រូវបានគេធ្វើបាប យើងពិតជានឹងផ្ដល់កន្លែងស្នាក់នៅយ៉ាងល្អប្រសើរដល់ពួកគេនៅក្នុងលោកិយនេះ ។ ហើយចំពោះផលបុណ្យនៅថ្ងៃបរលោកវិញ គឺធំធេងជាងនេះទៅទៀត ប្រសិនបើពួកគេ(ពួកដែលមិនបានភៀសខ្លួន) បានដឹង ។

وَٱلَّذِينَ هَاجَرُواْ فِي ٱللَّهِ مِنۢ بَعۡدِ مَا ظُلِمُواْ
لَنُبَوِّئَنَّهُمۡ فِي ٱلدُّنۡيَا حَسَنَةٗۖ وَلَأَجۡرُ ٱلۡأٓخِرَةِ
أَكۡبَرُۚ لَوۡ كَانُواْ يَعۡلَمُونَ ٤١

៤២-(អ្នកដែលភៀសខ្លួននោះ) គឺបណ្ដាអ្នកដែលអត់ធ្មត់ ហើយពួកគេប្រគល់ការទុកចិត្តទៅចំពោះម្ចាស់របស់ពួកគេតែមួយគត់ ។

ٱلَّذِينَ صَبَرُواْ وَعَلَىٰ رَبِّهِمۡ يَتَوَكَّلُونَ ٤٢

៤៣-ហើយយើងមិនបានបញ្ជូននរណាម្នាក់មុនអ្នក(មូហាំម៉ាត់) ក្រៅពីបុរសៗដែលយើងផ្ដល់វ៉ាហ៊ីដល់ពួកគេនោះឡើយ ។ ហេតុនេះ ចូរពួកអ្នក(ពួកមូស្ទីគីនម៉ាក្កះ) សួរពួកដែលមានចំណេះដឹង (យ៉ាហ៊ូទី និងណាសរ៉នី) ចុះ ប្រសិនបើពួកអ្នកមិនបានដឹង ។

وَمَآ أَرۡسَلۡنَا مِن قَبۡلِكَ إِلَّا رِجَالٗا
نُّوحِيٓ إِلَيۡهِمۡۚ فَسۡـَٔلُوٓاْ أَهۡلَ ٱلذِّكۡرِ إِن كُنتُمۡ
لَا تَعۡلَمُونَ ٤٣

៤៤-(យើងបានបញ្ជូនបណ្ដាអ្នកនាំសារ) ជាមួយភស្តុតាងៗនិងគម្ពីរជាច្រើនផងដែរ ។ ហើយយើងបានបញ្ចុះគម្ពីរគួរអានឱ្យអ្នក ដើម្បីឱ្យអ្នកពន្យល់ណែនាំដល់មនុស្សលោកនូវអ្វីៗដែលត្រូវបានបញ្ចុះទៅឱ្យពួកគេ ហើយដើម្បីឱ្យពួកគេចេះគិតពិចារណា ។

بِٱلۡبَيِّنَٰتِ وَٱلزُّبُرِۗ وَأَنزَلۡنَآ إِلَيۡكَ ٱلذِّكۡرَ
لِتُبَيِّنَ لِلنَّاسِ مَا نُزِّلَ إِلَيۡهِمۡ وَلَعَلَّهُمۡ
يَتَفَكَّرُونَ ٤٤

៤៥-ដូច្នេះ តើពួកដែលបានរៀបចំផែនការអាក្រក់នានាមានសុវត្ថិភាពដែរឬទេ បើអល់ឡោះឱ្យពួកគេលិចចូលទៅក្នុងដី(ដីលេប) ឬទារុណកម្មមកដល់ពួកគេខណៈដែលពួកគេមិនដឹងខ្លួននោះ?

أَفَأَمِنَ ٱلَّذِينَ مَكَرُواْ ٱلسَّيِّـَٔاتِ أَن يَخۡسِفَ ٱللَّهُ
بِهِمُ ٱلۡأَرۡضَ أَوۡ يَأۡتِيَهُمُ ٱلۡعَذَابُ مِنۡ حَيۡثُ لَا
يَشۡعُرُونَ ٤٥

៤៦-ឬក៏ទ្រង់នឹងដាក់ទណ្ឌកម្មពួកគេក្នុងពេលធ្វើដំណើរចុះឡើង (រកស៊ី) របស់ពួកគេ? ហេតុនេះពួកគេមិនអាចគេចផុតបានឡើយ ។

أَوۡ يَأۡخُذَهُمۡ فِي تَقَلُّبِهِمۡ فَمَا هُم
بِمُعۡجِزِينَ ٤٦

៤៧-ឬទ្រង់នឹងដាក់ទណ្ឌកម្មពួកគេក្នុងពេលដែលពួកគេភ័យរន្ធត់(ដោយសារការបាត់បង់ទ្រព្យសម្បត្តិនិងសុខភាព) ។ ដូច្នេះ ហើយម្ចាស់របស់ពួកអ្នក គឺមហាមេត្តាករុណា មហាអាណិតស្រឡាញ់ ។

أَوۡ يَأۡخُذَهُمۡ عَلَىٰ تَخَوُّفٖ فَإِنَّ رَبَّكُمۡ لَرَءُوفٞ
رَّحِيمٌ ٤٧

៤៨-តើពួកគេ(ពួកប្រឆាំង) មិនបានឃើញទេឬ ចំពោះអ្វីមួយដែលអល់ឡោះបានបង្កើតដែលស្រមោលរបស់វារេម្ដងទៅខាងស្ដាំ

أَوَلَمۡ يَرَوۡاْ إِلَىٰ مَا خَلَقَ ٱللَّهُ مِن شَيۡءٖ يَتَفَيَّؤُاْ

ظِلَٰلُهُۥ عَنِ ٱلۡيَمِينِ وَٱلشَّمَآئِلِ سُجَّدٗا لِّلَّهِ
وَهُمۡ دَٰخِرُونَ ٤٨

ហើយម្តងទៅខាងឆ្វេង ដោយក្រាបគោរពទៅចំពោះអល់ឡោះ ខណៈដែលពួកគេឱនលំទោននោះ?

وَلِلَّهِ يَسۡجُدُ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي
ٱلۡأَرۡضِ مِن دَآبَّةٖ وَٱلۡمَلَٰٓئِكَةُ وَهُمۡ لَا
يَسۡتَكۡبِرُونَ ٤٩

៤៩-ហើយអ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងសត្វដែលមានជីវិតទាំងអស់នៅលើផែនដី ព្រមទាំងបណ្តាម៉ាឡាអ៊ីកាត់ ពួកគេទាំងអស់នោះក្រាបស៊ូជូតទៅចំពោះអល់ឡោះតែមួយគត់ ហើយពួកគេមិនក្រអឺតក្រទមឡើយ ។

يَخَافُونَ رَبَّهُم مِّن فَوۡقِهِمۡ وَيَفۡعَلُونَ مَا
يُؤۡمَرُونَ۩ ٥٠

៥០-ដោយពួកគេភ័យខ្លាចម្ចាស់របស់ពួកគេ ដែលនៅពីលើពួកគេ ហើយពួកគេប្រតិបត្តិនូវអ្វីដែលពួកគេត្រូវបានអល់ឡោះបញ្ជា ។

۞وَقَالَ ٱللَّهُ لَا تَتَّخِذُوٓاْ إِلَٰهَيۡنِ ٱثۡنَيۡنِۖ إِنَّمَا
هُوَ إِلَٰهٞ وَٰحِدٞ فَإِيَّٰيَ فَٱرۡهَبُونِ ٥١

៥១-ហើយអល់ឡោះបានមានបន្ទូល(ទៅកាន់មនុស្សលោក)ថា: ចូរពួកអ្នកកុំយកព្រះពីរមកគោរពសក្ការៈឱ្យសោះ ជាការពិតណាស់ ទ្រង់ជាម្ចាស់តែមួយគត់ដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដ ។ ដូច្នេះចំពោះយើងតែមួយគត់ ពួកអ្នកត្រូវតែកោតខ្លាច ។

وَلَهُۥ مَا فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَلَهُ ٱلدِّينُ
وَاصِبًاۚ أَفَغَيۡرَ ٱللَّهِ تَتَّقُونَ ٥٢

៥២-ហើយអ្វីៗដែលមាននៅលើមេឃជាច្រើនជាន់និងផែនដីគឺជាកម្មសិទ្ធិរបស់ទ្រង់ ហើយសាសនា(អ៊ីស្លាម)ដ៏ស្ថិតស្ថេរក៏ជាកម្មសិទ្ធិរបស់ទ្រង់ដែរ ។ ដូច្នេះតើពួកអ្នកនៅតែគោរពកោតខ្លាចអ្នកផ្សេងពីអល់ឡោះឬ?

وَمَا بِكُم مِّن نِّعۡمَةٖ فَمِنَ ٱللَّهِۖ ثُمَّ إِذَا مَسَّكُمُ
ٱلضُّرُّ فَإِلَيۡهِ تَجۡـَٔرُونَ ٥٣

៥៣-ហើយអ្វីៗដែលជានៀកម៉ាត់ដែលពួកអ្នកមានគឺមកពីអល់ឡោះ ។ បន្ទាប់មកប្រសិនបើគ្រោះថ្នាក់បានកើតឡើងចំពោះពួកអ្នក ពួកអ្នកនឹងទទូចសុំទ្រង់ឱ្យជួយ ។

ثُمَّ إِذَا كَشَفَ ٱلضُّرَّ عَنكُمۡ إِذَا فَرِيقٞ مِّنكُم
بِرَبِّهِمۡ يُشۡرِكُونَ ٥٤

៥៤-បន្ទាប់មក នៅពេលដែលទ្រង់បានបំបាត់គ្រោះថ្នាក់ចេញពីពួកអ្នកវិញនោះ ស្រាប់តែមានមួយក្រុមក្នុងចំណោមពួកអ្នកធ្វើស្ហ៊ីរិកនឹងម្ចាស់របស់ពួកគេទៅវិញ

لِيَكۡفُرُواْ بِمَآ ءَاتَيۡنَٰهُمۡۚ فَتَمَتَّعُواْۖ فَسَوۡفَ
تَعۡلَمُونَ ٥٥

៥៥-ដើម្បីទុកឱ្យពួកគេបដិសេធនឹងអ្វីៗដែលយើងបានប្រទានឱ្យពួកគេ ។ ហើយចូរពួកអ្នក(ពួកគ្មានជំនឿ)សប្បាយរីករាយ(មួយរយៈ)សិនចុះ! ដូច្នេះ ពួកអ្នកគង់តែនឹងដឹងជាមិនខាន ។

وَيَجۡعَلُونَ لِمَا لَا يَعۡلَمُونَ نَصِيبٗا مِّمَّا

៥៦-ហើយពួកគេរៀបចំមួយចំណែកនូវអ្វីដែលយើងបាន

رَزَقْنَٰهُمْ ۗ تَٱللَّهِ لَتُسْـَٔلُنَّ عَمَّا كُنتُمْ تَفْتَرُونَ ﴿٥٦﴾

ប្រទានលាភសក្ការៈឱ្យពួកគេទៅឱ្យព្រះនានា ដែលព្រះទាំងនោះមិនដឹងអ្វីទាល់តែសោះ។ អល់ឡោះស្បថថា: ពួកអ្នកប្រាកដជានឹងត្រូវគេសួរអំពីអ្វីដែលពួកអ្នកធ្លាប់បានប្រឌិតនោះ។

وَيَجْعَلُونَ لِلَّهِ ٱلْبَنَٰتِ سُبْحَٰنَهُۥ ۙ وَلَهُم مَّا يَشْتَهُونَ ﴿٥٧﴾

៥៧-ហើយពួកគេ(ពួកមូស្ទីរីគីន)ចាត់ទុកអល់ឡោះមានកូនស្រី(ម៉ាឡាអ៊ីកាត់ជាកូនស្រីរបស់អល់ឡោះ)។ ទ្រង់មហាជ្រះស្អាត(អំពីអ្វីដែលពួកគេចោទប្រកាន់) ហើយអ្វី(កូនប្រុស)ដែលពួកគេចូលចិត្ត ពួកគេចាត់ទុកជារបស់ពួកគេ។

وَإِذَا بُشِّرَ أَحَدُهُم بِٱلْأُنثَىٰ ظَلَّ وَجْهُهُۥ مُسْوَدًّا وَهُوَ كَظِيمٌ ﴿٥٨﴾

៥៨-ហើយនៅពេលដែលអ្នកណាម្នាក់ក្នុងចំណោមពួកគេ ត្រូវបានគេផ្តល់ដំណឹងថាកើតបានកូនស្រីនោះ មុខរបស់គេប្រែទៅជាខ្មៅ ហើយគេពោរពេញទៅដោយទុក្ខសោក។

يَتَوَٰرَىٰ مِنَ ٱلْقَوْمِ مِن سُوٓءِ مَا بُشِّرَ بِهِۦٓ ۚ أَيُمْسِكُهُۥ عَلَىٰ هُونٍ أَمْ يَدُسُّهُۥ فِى ٱلتُّرَابِ ۗ أَلَا سَآءَ مَا يَحْكُمُونَ ﴿٥٩﴾

៥៩-គេលាក់ខ្លួនអំពីក្រុមមនុស្ស ព្រោះតែដំណឹងអាក្រក់ដែលត្រូវបានផ្តល់ឱ្យគេ។ (គេគិតថា) តើគេគួររក្សាទុកកូននេះឱ្យអាប់ឱនកិត្តិយសឬក៏កប់វាទាំងរស់ទៅក្នុងដី? តើវាមិនអាក្រក់ទេឬអ្វីដែលពួកគេសម្រេចចិត្តនោះ?

لِلَّذِينَ لَا يُؤْمِنُونَ بِٱلْءَاخِرَةِ مَثَلُ ٱلسَّوْءِ ۖ وَلِلَّهِ ٱلْمَثَلُ ٱلْأَعْلَىٰ ۚ وَهُوَ ٱلْعَزِيزُ ٱلْحَكِيمُ ﴿٦٠﴾

៦០-សម្រាប់ពួកដែលគ្មានជំនឿនឹងថ្ងៃបរលោកនោះគឺជាគំរូដ៏អាក្រក់បំផុត។ ប៉ុន្តែចំពោះអល់ឡោះវិញ ទ្រង់ជាគំរូដ៏ខ្ពង់ខ្ពស់បំផុត។ ហើយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត។

وَلَوْ يُؤَاخِذُ ٱللَّهُ ٱلنَّاسَ بِظُلْمِهِم مَّا تَرَكَ عَلَيْهَا مِن دَآبَّةٍ وَلَٰكِن يُؤَخِّرُهُمْ إِلَىٰٓ أَجَلٍ مُّسَمًّى ۖ فَإِذَا جَآءَ أَجَلُهُمْ لَا يَسْتَـْٔخِرُونَ سَاعَةً ۖ وَلَا يَسْتَقْدِمُونَ ﴿٦١﴾

៦១-ហើយប្រសិនបើអល់ឡោះយកទោសមនុស្សលោកដោយសារតែកំហុសរបស់ពួកគេនោះ ទ្រង់នឹងមិនទុកឱ្យសត្វដែលមានជីវិតនៅលើផែនដីរស់ឡើយ។ តែទ្រង់ពន្យារពេលឱ្យពួកគេរហូតដល់ពេលមួយដែលត្រូវបានកំណត់។ ហើយនៅពេលដែលការកំណត់របស់ពួកគេបានមកដល់ ពួកគេមិនអាចសុំពន្យារពេលបានឡើយ ហើយពួកគេក៏មិនអាចសុំឱ្យកើតឡើងមុនពេលកំណត់បានដែរ សូម្បីតែមួយវិនាទីក៏ដោយ។

وَيَجْعَلُونَ لِلَّهِ مَا يَكْرَهُونَ وَتَصِفُ أَلْسِنَتُهُمُ ٱلْكَذِبَ أَنَّ لَهُمُ ٱلْحُسْنَىٰ ۖ لَا جَرَمَ أَنَّ لَهُمُ ٱلنَّارَ وَأَنَّهُم مُّفْرَطُونَ ﴿٦٢﴾

៦២-ហើយពួកគេចាត់ទុកអ្វីដែលពួកគេស្អប់ខ្ពើមជារបស់អល់ឡោះ ហើយអណ្តាតរបស់ពួកគេនិយាយដោយកុហកថា: ពិតប្រាកដណាស់ ពួកគេនឹងទទួលបានភាពល្អប្រសើរ។ គ្មានការសង្ស័យឡើយ ពិតប្រាកដណាស់សម្រាប់ពួកគេគឺភ្លើងនរក ហើយពិតប្រាកដ

ណាស់ ពួកគេនឹងត្រូវបានគេបោះបង់ចោល(ក្នុងភ្លើងនរក) ។

تَٱللَّهِ لَقَدۡ أَرۡسَلۡنَآ إِلَىٰٓ أُمَمٖ مِّن قَبۡلِكَ فَزَيَّنَ
لَهُمُ ٱلشَّيۡطَٰنُ أَعۡمَٰلَهُمۡ فَهُوَ وَلِيُّهُمُ ٱلۡيَوۡمَ وَلَهُمۡ
عَذَابٌ أَلِيمٞ ٦٣

៦៣-អល់ឡោះស្បថថា: ជាការពិតណាស់ យើងបានបញ្ជូន(អ្នកនាំសារ)ទៅកាន់បណ្ដាប្រជាជាតិជំនាន់មុនៗអ្នក(មូហាំ-ម៉ាត់) ។ ហើយស្ហៃតនបានលំអទង្វើរបស់ពួកគេសម្រាប់ពួកគេ ។ ដូច្នេះវា(ស្ហៃតន)ជាអ្នកដឹកនាំពួកគេនៅក្នុងលោកិយនេះ ហើយ(នៅថ្ងៃបរលោកវិញ) ពួកគេនឹងទទួលទារុណកម្មដ៏ឈឺចាប់បំផុត ។

وَمَآ أَنزَلۡنَا عَلَيۡكَ ٱلۡكِتَٰبَ إِلَّا لِتُبَيِّنَ لَهُمُ
ٱلَّذِي ٱخۡتَلَفُواْ فِيهِ وَهُدٗى وَرَحۡمَةٗ لِّقَوۡمٖ
يُؤۡمِنُونَ ٦٤

៦៤-ហើយយើងមិនបានបញ្ចុះគម្ពីរ(គួរអាន)ទៅឱ្យអ្នកឡើយ លើកលែងតែដើម្បីឱ្យអ្នកពន្យល់ណែនាំពួកដែលបានខ្វែងគំនិតគ្នានៅក្នុងវា និងជាការចង្អុលបង្ហាញ ហើយនិងជាការប្រោសប្រណីសម្រាប់ក្រុមដែលមានជំនឿប៉ុណ្ណោះ ។

وَٱللَّهُ أَنزَلَ مِنَ ٱلسَّمَآءِ مَآءٗ فَأَحۡيَا بِهِ
ٱلۡأَرۡضَ بَعۡدَ مَوۡتِهَآۚ إِنَّ فِي ذَٰلِكَ لَأٓيَةٗ لِّقَوۡمٖ
يَسۡمَعُونَ ٦٥

៦៥-ហើយអល់ឡោះបានបញ្ចុះទឹកភ្លៀងពីលើមេឃ បន្ទាប់មកដោយសារទឹកភ្លៀងនោះទ្រង់ក៏ធ្វើឱ្យដីរស់(មានជីជាតិ)ឡើងវិញក្រោយពីការស្លាប់(គ្មានជីជាតិ)របស់វា ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងមួយសម្រាប់ក្រុមដែលស្តាប់(បញ្ជារបស់អល់ឡោះ) ។

وَإِنَّ لَكُمۡ فِي ٱلۡأَنۡعَٰمِ لَعِبۡرَةٗۖ نُّسۡقِيكُم مِّمَّا فِي
بُطُونِهِۦ مِنۢ بَيۡنِ فَرۡثٖ وَدَمٖ لَّبَنًا خَالِصٗا
سَآئِغٗا لِّلشَّٰرِبِينَ ٦٦

៦៦-ហើយពិតប្រាកដណាស់ នៅក្នុងរឿងសត្វពាហនៈ គឺជាមេរៀនមួយសម្រាប់ពួកអ្នក ។ យើងផ្ដល់ឱ្យពួកអ្នកទទួលទាននូវអ្វីដែលនៅក្នុងពោះរបស់វារវាងលាមក និងឈាមនូវទឹកដោះដ៏បរិសុទ្ធដែលមានរសជាតិសម្រាប់បណ្ដាអ្នកដែលទទួលទាន ។

وَمِن ثَمَرَٰتِ ٱلنَّخِيلِ وَٱلۡأَعۡنَٰبِ تَتَّخِذُونَ
مِنۡهُ سَكَرٗا وَرِزۡقًا حَسَنًاۚ إِنَّ فِي ذَٰلِكَ لَأٓيَةٗ
لِّقَوۡمٖ يَعۡقِلُونَ ٦٧

៦៧-ហើយអំពីផ្លែល្មើ និងទំពាំងបាយជូរ ពួកអ្នកអាចយកវាធ្វើជាគ្រឿងស្រវឹង និងជាចំណីដ៏ល្អប្រសើរ ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងមួយសម្រាប់ក្រុមដែលចេះគិតពិចារណា ។

وَأَوۡحَىٰ رَبُّكَ إِلَى ٱلنَّحۡلِ أَنِ ٱتَّخِذِي مِنَ
ٱلۡجِبَالِ بُيُوتٗا وَمِنَ ٱلشَّجَرِ وَمِمَّا
يَعۡرِشُونَ ٦٨

៦៨-ហើយម្ចាស់របស់អ្នក(មូហាំម៉ាត់)បានបញ្ជាទៅសត្វឃ្មុំថា: ចូរឯងតាំងសំបុកនានានៅតាមភ្នំ និងដើមឈើទាំងឡាយ ហើយនិងនៅតាមអ្វីដែលពួកគេ(មនុស្សលោក)សាងសង់ ។

ثُمَّ كُلِي مِن كُلِّ ٱلثَّمَرَٰتِ فَٱسۡلُكِي سُبُلَ رَبِّكِ

៦៩-ក្រោយមកចូរឯង(ឃ្មុំ)ស៊ីនូវរាល់ភោគផលទាំងឡាយរួច

ذُلُلٗاۚ يَخۡرُجُ مِنۢ بُطُونِهَا شَرَابٞ مُّخۡتَلِفٌ
أَلۡوَٰنُهُۥ فِيهِ شِفَآءٞ لِّلنَّاسِۚ إِنَّ فِي ذَٰلِكَ لَأٓيَةٗ
لِّقَوۡمٖ يَتَفَكَّرُونَ ٦٩

ហើយ ចូរឯងហោះហើរតាមផ្លូវនៃម្ចាស់របស់ឯងដោយងាយស្រួលចុះ ។ ទឹកដែលចេញពីពោះរបស់វាមានពណ៌ផ្សេងៗគ្នាដែលនៅក្នុងនោះ គឺជាឱសថព្យាបាលសម្រាប់មនុស្សលោក ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងមួយសម្រាប់មនុស្សលោកដែលចេះគិតពិចារណា ។

وَٱللَّهُ خَلَقَكُمۡ ثُمَّ يَتَوَفَّىٰكُمۡۚ وَمِنكُم مَّن يُرَدُّ
إِلَىٰٓ أَرۡذَلِ ٱلۡعُمُرِ لِكَيۡ لَا يَعۡلَمَ بَعۡدَ عِلۡمٖ
شَيۡـًٔاۚ إِنَّ ٱللَّهَ عَلِيمٞ قَدِيرٞ ٧٠

៧០-ហើយអល់ឡោះបានបង្កើតពួកអ្នក ក្រោយមកទ្រង់នឹងយកជីវិតពួកអ្នកវិញ ។ ហើយក្នុងចំណោមពួកអ្នក មានអ្នកដែលត្រូវគេធ្វើឱ្យវិលត្រឡប់ទៅរកភាពចាស់ជរា ដើម្បីកុំឱ្យគេដឹងអ្វីទាំងអស់បន្ទាប់ពីគេដឹងរួចហើយនោះ ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹង មហាមានអានុភាព ។

وَٱللَّهُ فَضَّلَ بَعۡضَكُمۡ عَلَىٰ بَعۡضٖ فِي ٱلرِّزۡقِۚ
فَمَا ٱلَّذِينَ فُضِّلُواْ بِرَآدِّي رِزۡقِهِمۡ عَلَىٰ مَا
مَلَكَتۡ أَيۡمَٰنُهُمۡ فَهُمۡ فِيهِ سَوَآءٌۚ أَفَبِنِعۡمَةِ
ٱللَّهِ يَجۡحَدُونَ ٧١

៧១-ហើយអល់ឡោះបានលើកតម្កើងពួកអ្នកមួយចំនួនឱ្យប្រសើរជាងគ្នាក្នុងការផ្តល់លាភសក្ការៈ ។ ប៉ុន្តែពួកដែលត្រូវបានគេលើកតម្កើងនោះមិនចង់ផ្តល់លាភសក្ការៈរបស់ពួកគេទៅឱ្យខ្ញុំបម្រើជាថ្ងៃរបស់ពួកគេ ដើម្បីឱ្យពួកគេទាំងអស់គ្នាមានភាពស្មើគ្នាក្នុងការទទួលលាភសក្ការៈនោះឡើយ ។ ដូច្នេះ តើពួកគេបដិសេធនឹងនៀកម៉ាត់របស់អល់ឡោះឬ?

وَٱللَّهُ جَعَلَ لَكُم مِّنۡ أَنفُسِكُمۡ أَزۡوَٰجٗا وَجَعَلَ
لَكُم مِّنۡ أَزۡوَٰجِكُم بَنِينَ وَحَفَدَةٗ وَرَزَقَكُم
مِّنَ ٱلطَّيِّبَٰتِۚ أَفَبِٱلۡبَٰطِلِ يُؤۡمِنُونَ وَبِنِعۡمَتِ
ٱللَّهِ هُمۡ يَكۡفُرُونَ ٧٢

៧២-ហើយអល់ឡោះបានបង្កើតភរិយាចេញពីរាងកាយរបស់ពួកអ្នកផ្ទាល់សម្រាប់ពួកអ្នក និងបានបង្កើតពីភរិយារបស់ពួកអ្នកនូវកូនចៅជាច្រើនសម្រាប់ពួកអ្នក ហើយទ្រង់បានផ្តល់ឱ្យពួកអ្នកនូវលាភសក្ការៈដ៏ល្អប្រសើរ ។ ដូច្នេះ តើពួកគេបែរជាមានជំនឿលើប្រការមិនត្រឹមត្រូវ និងប្រឆាំងនឹងនៀកម៉ាត់របស់អល់ឡោះឬ?

وَيَعۡبُدُونَ مِن دُونِ ٱللَّهِ مَا لَا يَمۡلِكُ لَهُمۡ
رِزۡقٗا مِّنَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ شَيۡـٔٗا وَلَا
يَسۡتَطِيعُونَ ٧٣

៧៣-ហើយពួកគេគោរពសក្ការៈចំពោះព្រះផ្សេងពីអល់ឡោះដែលវាមិនអាចផ្តល់លាភសក្ការៈអ្វីសោះពីលើមេឃជាច្រើនជាន់ និងផែនដីឱ្យពួកគេ ហើយពួកវាក៏គ្មានសមត្ថភាពដែរ ។

فَلَا تَضۡرِبُواْ لِلَّهِ ٱلۡأَمۡثَالَۚ إِنَّ ٱللَّهَ يَعۡلَمُ وَأَنتُمۡ
لَا تَعۡلَمُونَ ٧٤

៧៤-ហេតុនេះ ចូរពួកអ្នកកុំ(យកអ្វីមួយ)ប្រៀបប្រដូចនឹងអល់ឡោះឱ្យសោះ ។ ពិតប្រាកដណាស់ អល់ឡោះដឹង(នូវអ្វីៗទាំងអស់) តែពួកអ្នកមិនដឹងឡើយ ។

៧៥-អល់ឡោះបានលើកយកខ្ញុំបម្រើដាច់ថ្លៃម្នាក់ដែលនៅក្រោមការគ្រប់គ្រងរបស់គេ ដែលគេ( ខ្ញុំបម្រើ) គ្មានលទ្ធភាពអ្វីទាំងអស់ និងអ្នកដែលយើងបានផ្ដល់លាភសក្ការៈឱ្យគេនូវលាភសក្ការៈដ៏ល្អប្រសើរអំពីយើង ហើយគេបរិច្ចាគវាមួយចំនួនដោយអាថ៌កំបាំងនិងដោយចំហនោះមកធ្វើជាឧទាហរណ៍ ។ តើពួកគេមានភាពស្មើគ្នាដែរឬទេ? រាល់ការសរសើរគឺចំពោះអល់ឡោះតែមួយគត់ ។ ផ្ទុយទៅវិញ ពួកគេភាគច្រើនមិនដឹងឡើយ ។

៧៦-ហើយអល់ឡោះបានលើកយកបុរសពីរនាក់មកធ្វើជាឧទាហរណ៍ ដែលម្នាក់នៃគេទាំងពីរនោះជាមនុស្សគដែលគ្មានសមត្ថភាពអ្វីសោះ ហើយគេគឺជាបន្ទុកដ៏ធ្ងន់ធ្ងរចំពោះអាណាព្យាបាលរបស់គេ ។ ទោះជាគេ( អាណាព្យាបាល) ប្រើឱ្យគេទៅទីណាក៏ដោយ គឺគេមិនដែលនាំមកវិញនូវប្រការល្អឡើយ ។ តើមានភាពស្មើគ្នាដែរឬទេរវាងគេ( មនុស្សគ) ហើយនិងអ្នកដែលប្រើឱ្យគេប្រព្រឹត្តអំពើយុត្តិធម៌ ហើយគេខ្លួនឯងស្ថិតលើមាគ៌ាត្រឹមត្រូវនោះ?

៧៧-ហើយប្រការអាថ៌កំបាំងនៃមេឃជាច្រើនជាន់និងផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ហើយកិច្ចការនៃថ្ងៃបរលោកហាក់បីដូចជាមួយប៉ប្រិចភ្នែកតែប៉ុណ្ណោះ ឬក៏ឆាប់ជាងនេះទៅទៀត ។ ពិតប្រាកដណាស់ អល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

៧៨-ហើយអល់ឡោះបានបញ្ចេញពួកអ្នកពីផ្ទៃមាតារបស់ពួកអ្នក ខណៈដែលពួកអ្នកមិនដឹងអ្វីទាល់តែសោះ ។ ហើយទ្រង់បានធ្វើឱ្យពួកអ្នកមានការចេះស្ដាប់ និងចេះមើល ហើយនិងមានបេះដូង ( ចេះគិតពិចារណា) សង្ឃឹមថាពួកអ្នកនឹងដឹងគុណ( ចំពោះអល់ឡោះ) ។

៧៩-តើពួកគេមិនបានឃើញសត្វស្លាបហោះហើរយ៉ាងងាយស្រួលនៅលើអាកាសទេឬ ដែលគ្មាននរណាទប់ពួកវា( មិនឱ្យធ្លាក់) ក្រៅពីអល់ឡោះនោះ? ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងៗសម្រាប់ក្រុមអ្នកដែលមានជំនឿ ។

៨០-ហើយអល់ឡោះបានបង្កើតគេហដ្ឋានផ្សេងៗជាកន្លែង

۞ ضَرَبَ ٱللَّهُ مَثَلًا عَبۡدًا مَّمۡلُوكًا لَّا يَقۡدِرُ
عَلَىٰ شَيۡءٖ وَمَن رَّزَقۡنَٰهُ مِنَّا رِزۡقًا حَسَنًا فَهُوَ
يُنفِقُ مِنۡهُ سِرًّا وَجَهۡرًاۖ هَلۡ يَسۡتَوُۥنَۚ
ٱلۡحَمۡدُ لِلَّهِۚ بَلۡ أَكۡثَرُهُمۡ لَا يَعۡلَمُونَ ٧٥

وَضَرَبَ ٱللَّهُ مَثَلٗا رَّجُلَيۡنِ أَحَدُهُمَآ أَبۡكَمُ
لَا يَقۡدِرُ عَلَىٰ شَيۡءٖ وَهُوَ كَلٌّ عَلَىٰ مَوۡلَىٰهُ
أَيۡنَمَا يُوَجِّههُّ لَا يَأۡتِ بِخَيۡرٍۖ هَلۡ يَسۡتَوِي هُوَ
وَمَن يَأۡمُرُ بِٱلۡعَدۡلِ وَهُوَ عَلَىٰ
صِرَٰطٖ مُّسۡتَقِيمٖ ٧٦

وَلِلَّهِ غَيۡبُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ وَمَآ أَمۡرُ
ٱلسَّاعَةِ إِلَّا كَلَمۡحِ ٱلۡبَصَرِ أَوۡ هُوَ أَقۡرَبُۚ
إِنَّ ٱللَّهَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٧٧
وَٱللَّهُ أَخۡرَجَكُم مِّنۢ بُطُونِ أُمَّهَٰتِكُمۡ
لَا تَعۡلَمُونَ شَيۡـٔٗا وَجَعَلَ لَكُمُ ٱلسَّمۡعَ
وَٱلۡأَبۡصَٰرَ وَٱلۡأَفۡـِٔدَةَ لَعَلَّكُمۡ تَشۡكُرُونَ ٧٨

أَلَمۡ يَرَوۡاْ إِلَى ٱلطَّيۡرِ مُسَخَّرَٰتٖ فِي جَوِّ
ٱلسَّمَآءِ مَا يُمۡسِكُهُنَّ إِلَّا ٱللَّهُۚ إِنَّ فِي ذَٰلِكَ
لَأٓيَٰتٖ لِّقَوۡمٖ يُؤۡمِنُونَ ٧٩
وَٱللَّهُ جَعَلَ لَكُم مِّنۢ بُيُوتِكُمۡ سَكَنٗا

وَجَعَلَ لَكُم مِّن جُلُودِ ٱلْأَنْعَٰمِ بُيُوتًا
تَسْتَخِفُّونَهَا يَوْمَ ظَعْنِكُمْ وَيَوْمَ إِقَامَتِكُمْ ۙ
وَمِنْ أَصْوَافِهَا وَأَوْبَارِهَا وَأَشْعَارِهَآ أَثَٰثًا
وَمَتَٰعًا إِلَىٰ حِينٍ ﴿٨٠﴾

ស្នាក់នៅសម្រាប់ពួកអ្នក ។ ហើយទ្រង់បានបង្កើតគេហដ្ឋាន( ជំរំ) ជាច្រើនធ្វើអំពីស្បែកសត្វសម្រាប់ពួកអ្នក ដែលវាធ្វើឱ្យពួកអ្នកធូរស្រាល( ក្នុងការយកតាម) នៅថ្ងៃធ្វើដំណើររបស់ពួកអ្នក និងថ្ងៃបោះទីតាំងរបស់ពួកអ្នក ។ ហើយ( ទ្រង់បានផ្ដល់ឱ្យអ្នកនូវ) រោមចៀម និងស្បែកសត្វអូដ្ឋ និងរោមសត្វពពែទាំងឡាយធ្វើជាគ្រឿងតុបតែង និងដើម្បីបង្កភាពងាយស្រួលរហូតដល់ពេលកំណត់ ( ខូចខាត) ។

وَٱللَّهُ جَعَلَ لَكُم مِّمَّا خَلَقَ ظِلَٰلًا وَجَعَلَ
لَكُم مِّنَ ٱلْجِبَالِ أَكْنَٰنًا وَجَعَلَ لَكُمْ
سَرَٰبِيلَ تَقِيكُمُ ٱلْحَرَّ وَسَرَٰبِيلَ تَقِيكُم
بَأْسَكُمْ ۚ كَذَٰلِكَ يُتِمُّ نِعْمَتَهُۥ عَلَيْكُمْ
لَعَلَّكُمْ تُسْلِمُونَ ﴿٨١﴾

៨១-ហើយអល់ឡោះបានធ្វើឱ្យមាននូវអ្វីៗ( ដើមឈើ ផ្ទះ ពពក...) ដែលទ្រង់បានបង្កើតមកជាម្លប់សម្រាប់ពួកអ្នក ។ ហើយទ្រង់បានធ្វើឱ្យមានកន្លែងជ្រកកោនអំពីភ្នំទាំងឡាយសម្រាប់ពួកអ្នក ។ ហើយទ្រង់បានធ្វើឱ្យមានសំលៀកបំពាក់សម្រាប់ពួកអ្នកដើម្បីការពារពួកអ្នកពីកំដៅ( ឬរងា) និងសំលៀកបំពាក់( អាវក្រោះ) ដើម្បីការពារពួកអ្នកក្នុងពេលសង្គ្រាម ។ ដូច្នោះហើយទ្រង់បំពេញនៀកម៉ាត់របស់ទ្រង់ដល់ពួកអ្នក ដើម្បីឱ្យពួកអ្នកប្រគល់ខ្លួនទៅចំពោះទ្រង់ ។

فَإِن تَوَلَّوْا۟ فَإِنَّمَا عَلَيْكَ ٱلْبَلَٰغُ ٱلْمُبِينُ ﴿٨٢﴾

៨២-តែប្រសិនបើពួកគេងាកចេញ( ពីការអំពាវនាវ) វិញនោះតាមពិតតួនាទីរបស់អ្នក( មូហាំម៉ាត់) គឺគ្រាន់តែជាអ្នកផ្សព្វផ្សាយសារដ៏ច្បាស់លាស់ប៉ុណ្ណោះ ។

يَعْرِفُونَ نِعْمَتَ ٱللَّهِ ثُمَّ يُنكِرُونَهَا
وَأَكْثَرُهُمُ ٱلْكَٰفِرُونَ ﴿٨٣﴾

៨៣-ពួកគេ( ពួកមូស្ហរីគីន) ទទួលស្គាល់នៀកម៉ាត់របស់អល់ឡោះ បន្ទាប់មកពួកគេបែរជាប្រឆាំងនឹងវាទៅវិញ ហើយពួកគេភាគច្រើនជាពួកដែលប្រឆាំង ។

وَيَوْمَ نَبْعَثُ مِن كُلِّ أُمَّةٍ شَهِيدًا ثُمَّ لَا
يُؤْذَنُ لِلَّذِينَ كَفَرُوا۟ وَلَا هُمْ
يُسْتَعْتَبُونَ ﴿٨٤﴾

៨៤-ហើយ( ចូរចងចាំ) នៅថ្ងៃដែលយើងនឹងតែងតាំងសាក្សីម្នាក់( អ្នកនាំសាររបស់ពួកគេ) អំពីប្រជាជាតិគ្រប់ជំនាន់( ដើម្បីធ្វើសាក្សីលើពួកគេ) ។ បន្ទាប់មកគេ( អល់ឡោះ) មិនអនុញ្ញាតឱ្យពួកដែលប្រឆាំង( និយាយអ្វី) ឡើយ ហើយគេក៏មិនអនុញ្ញាតឱ្យពួកគេសុំអភ័យទោសដែរ ។

وَإِذَا رَءَا ٱلَّذِينَ ظَلَمُوا۟ ٱلْعَذَابَ فَلَا يُخَفَّفُ
عَنْهُمْ وَلَا هُمْ يُنظَرُونَ ﴿٨٥﴾

៨៥-ហើយនៅពេលពួកដែលបំពានបានឃើញទារុណកម្ម ពេលនោះគេ( អល់ឡោះ) មិនបន្ធូរបន្ថយ( ទារុណកម្ម) ចំពោះពួកគេ

ឡើយ ហើយគេក៏មិនពន្យារពេល(ធ្វើទារុណកម្ម)ដល់ពួកគេដែរ។

៨៦-ហើយនៅពេលដែលពួកធ្វើស្ហ៊ីរិកបានឃើញព្រះនានារបស់ពួកគេ ពួកគេបាននិយាយថាៈ ឱម្ចាស់(អល់ឡោះ)របស់យើងខ្ញុំ! ពួកទាំងនេះហើយ គឺជាព្រះរបស់យើងខ្ញុំ ដែលពួកយើងធ្លាប់បានបួងសួងសុំផ្សេងពីទ្រង់នោះ ពេលនោះពួកវាឆ្លើយចំពោះពួកគេវិញថាៈ ពិតប្រាកដណាស់ពួកអ្នកគឺជាពួកដែលភូតកុហក។

وَإِذَا رَءَا ٱلَّذِينَ أَشْرَكُواْ شُرَكَآءَهُمْ قَالُواْ رَبَّنَا هَٰٓؤُلَآءِ شُرَكَآؤُنَا ٱلَّذِينَ كُنَّا نَدْعُواْ مِن دُونِكَ ۖ فَأَلْقَوْاْ إِلَيْهِمُ ٱلْقَوْلَ إِنَّكُمْ لَكَٰذِبُونَ ﴿٨٦﴾

៨៧-ហើយពួកគេ(ពួកមូស្ហ៊ីគីន)បានប្រគល់ខ្លួនទៅចំពោះអល់ឡោះនៅថ្ងៃនោះ(ថ្ងៃបរលោក)។ ហើយអ្វីដែលពួកគេធ្លាប់បានបង្កើតឡើង(ដើម្បីគោរពសក្ការៈ)នោះបានបាត់បង់ពីពួកគេទាំងអស់។

وَأَلْقَوْاْ إِلَى ٱللَّهِ يَوْمَئِذٍ ٱلسَّلَمَ ۖ وَضَلَّ عَنْهُم مَّا كَانُواْ يَفْتَرُونَ ﴿٨٧﴾

៨៨-ពួកដែលបានប្រឆាំង និងបានរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ យើងបានបន្ថែមទារុណកម្មលើពួកគេជួនៗដោយសារតែពួកគេធ្លាប់បានបង្កវិនាសកម្ម។

ٱلَّذِينَ كَفَرُواْ وَصَدُّواْ عَن سَبِيلِ ٱللَّهِ زِدْنَٰهُمْ عَذَابًا فَوْقَ ٱلْعَذَابِ بِمَا كَانُواْ يُفْسِدُونَ ﴿٨٨﴾

៨៩-ហើយ(ចូរចងចាំ)នៅថ្ងៃដែលយើងនឹងតែងតាំងគ្រប់ប្រជាជាតិនូវសាក្សីម្នាក់ទៅលើពួកគេដែលចេញពីពួកគេផ្ទាល់។ ហើយយើងក៏បាននាំអ្នក(មូហាំម៉ាត់)មកធ្វើជាសាក្សីចំពោះពួកទាំងនេះ(ប្រជាជាតិរបស់គាត់)ផងដែរ។ ហើយយើងបានបញ្ចុះគម្ពីរ(គួរអាន)ឱ្យអ្នក ដើម្បីបញ្ជាក់ចំពោះអ្វីៗគ្រប់បែបយ៉ាង និងជាការចង្អុលបង្ហាញ និងជាក្ដីមេត្តាករុណា ហើយនិងជាការផ្ដល់ដំណឹងល្អចំពោះបណ្ដាអ្នកមូស្លីម។

وَيَوْمَ نَبْعَثُ فِي كُلِّ أُمَّةٍ شَهِيدًا عَلَيْهِم مِّنْ أَنفُسِهِمْ ۖ وَجِئْنَا بِكَ شَهِيدًا عَلَىٰ هَٰٓؤُلَآءِ ۚ وَنَزَّلْنَا عَلَيْكَ ٱلْكِتَٰبَ تِبْيَٰنًا لِّكُلِّ شَيْءٍ وَهُدًى وَرَحْمَةً وَبُشْرَىٰ لِلْمُسْلِمِينَ ﴿٨٩﴾

៩០-ពិតប្រាកដណាស់ អល់ឡោះបញ្ជាឱ្យប្រកាន់នូវភាពយុត្តិធម៌ និងគុណធម៌ និងផ្ដល់ជំនួយដល់ញាតិសន្ដាន ហើយទ្រង់ហាមឃាត់ពីអំពើកាមគុណខុសច្បាប់ទាំងឡាយ និងប្រការដែលត្រូវហាមឃាត់ ហើយនិងអំពើបំពាននានា។ ទ្រង់ដាស់តឿនពួកអ្នកដើម្បីឱ្យពួកអ្នកចងចាំ។

۞ إِنَّ ٱللَّهَ يَأْمُرُ بِٱلْعَدْلِ وَٱلْإِحْسَٰنِ وَإِيتَآيِٕ ذِي ٱلْقُرْبَىٰ وَيَنْهَىٰ عَنِ ٱلْفَحْشَآءِ وَٱلْمُنكَرِ وَٱلْبَغْيِ ۚ يَعِظُكُمْ لَعَلَّكُمْ تَذَكَّرُونَ ﴿٩٠﴾

៩១-ហើយចូរពួកអ្នកគោរពកិច្ចសន្យារបស់អល់ឡោះនៅពេលដែលពួកអ្នកបានសន្យាហើយនោះ។ ហើយចូរពួកអ្នកកុំក្បត់ពាក្យ

وَأَوْفُواْ بِعَهْدِ ٱللَّهِ إِذَا عَٰهَدتُّمْ وَلَا تَنقُضُواْ

ٱلْأَيْمَٰنَ بَعْدَ تَوْكِيدِهَا وَقَدْ جَعَلْتُمُ ٱللَّهَ عَلَيْكُمْ كَفِيلًا ۚ إِنَّ ٱللَّهَ يَعْلَمُ مَا تَفْعَلُونَ ﴿٩١﴾

សម្បថទាំងឡាយក្រោយពីបានបញ្ជាក់វាយ៉ាងច្បាស់លាស់ហើយនោះ។ ហើយជាការពិតណាស់ ពួកអ្នកបានយកអល់ឡោះធ្វើជាអ្នកធានាចំពោះពួកអ្នក។ ពិតប្រាកដណាស់ អល់ឡោះដឹងនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

وَلَا تَكُونُوا۟ كَٱلَّتِى نَقَضَتْ غَزْلَهَا مِنۢ بَعْدِ قُوَّةٍ أَنكَٰثًا تَتَّخِذُونَ أَيْمَٰنَكُمْ دَخَلًۢا بَيْنَكُمْ أَن تَكُونَ أُمَّةٌ هِىَ أَرْبَىٰ مِنْ أُمَّةٍ ۚ إِنَّمَا يَبْلُوكُمُ ٱللَّهُ بِهِۦ ۚ وَلَيُبَيِّنَنَّ لَكُمْ يَوْمَ ٱلْقِيَٰمَةِ مَا كُنتُمْ فِيهِ تَخْتَلِفُونَ ﴿٩٢﴾

៩២-ហើយចូរពួកអ្នកកុំធ្វើដូចស្ត្រីម្នាក់ដែលបានធ្វើឱ្យអំបោះហុងរបស់នាងខូចក្រោយពីនាងបានមូរវាណែនហើយនោះឱ្យសោះ។ ពួកអ្នកយកការស្បថរបស់ពួកអ្នកមកបោកបញ្ឆោតរវាងពួកអ្នកខ្លួនឯងព្រោះតែយល់ថាៈ ក្រុមមួយប្រសើរជាងក្រុមមួយទៀត[១]។ ពិតប្រាកដណាស់ អល់ឡោះគ្រាន់តែសាកល្បងពួកអ្នកប៉ុណ្ណោះ។ ហើយទ្រង់ពិតជានឹងបញ្ជាក់យ៉ាងច្បាស់ដល់ពួកអ្នកនៅថ្ងៃបរលោកនូវអ្វីៗដែលពួកអ្នកធ្លាប់បានខ្វែងគំនិតគ្នានោះ។

وَلَوْ شَآءَ ٱللَّهُ لَجَعَلَكُمْ أُمَّةً وَٰحِدَةً وَلَٰكِن يُضِلُّ مَن يَشَآءُ وَيَهْدِى مَن يَشَآءُ ۚ وَلَتُسْـَٔلُنَّ عَمَّا كُنتُمْ تَعْمَلُونَ ﴿٩٣﴾

៩៣-ហើយប្រសិនបើអល់ឡោះមានចេតនា ទ្រង់ពិតជាធ្វើឱ្យពួកអ្នកក្លាយជាប្រជាជាតិតែមួយ។ ប៉ុន្តែទ្រង់ធ្វើឱ្យវង្វេងចំពោះអ្នកណាដែលទ្រង់មានចេតនា ហើយទ្រង់ក៏ចង្អុលបង្ហាញចំពោះជនណាដែលទ្រង់មានចេតនាដែរ។ ហើយពួកអ្នកពិតជានឹងត្រូវគេសួរអំពីអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត។

وَلَا تَتَّخِذُوٓا۟ أَيْمَٰنَكُمْ دَخَلًۢا بَيْنَكُمْ فَتَزِلَّ قَدَمٌۢ بَعْدَ ثُبُوتِهَا وَتَذُوقُوا۟ ٱلسُّوٓءَ بِمَا صَدَدتُّمْ عَن سَبِيلِ ٱللَّهِ ۖ وَلَكُمْ عَذَابٌ عَظِيمٌ ﴿٩٤﴾

៩៤-ហើយចូរពួកអ្នកកុំយកពាក្យសម្បថរបស់ពួកអ្នកមកបោកបញ្ឆោតរវាងពួកអ្នក ជាហេតុធ្វើឱ្យជើងរអិលក្រោយពីមានភាពរឹងមាំហើយនោះឱ្យសោះ។ ហើយពួកអ្នកនឹងភ្លក្សរសជាតិអាក្រក់ (ទណ្ឌកម្មក្នុងលោកិយនេះ) ដោយសារតែពួកអ្នកបានរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ។ ហើយពួកអ្នកនឹងទទួលទារុណកម្មយ៉ាងធ្ងន់ធ្ងរបំផុត។

وَلَا تَشْتَرُوا۟ بِعَهْدِ ٱللَّهِ ثَمَنًا قَلِيلًا ۚ إِنَّمَا عِندَ ٱللَّهِ هُوَ خَيْرٌ لَّكُمْ إِن كُنتُمْ تَعْلَمُونَ ﴿٩٥﴾

៩៥-ហើយចូរពួកអ្នកកុំប្តូរកិច្ចសន្យារបស់អល់ឡោះជាមួយនឹងតម្លៃមួយដ៏តិចតួចបំផុតឱ្យសោះ។ ពិតប្រាកដណាស់ អ្វីដែលមាននៅជាមួយអល់ឡោះគឺវាប្រសើរសម្រាប់ពួកអ្នក ប្រសិនបើពួកអ្នកបានដឹង។

---

១-នៅពេលដែលពួកអ្នកបានជួបក្រុមផ្សេងដែលមានទ្រព្យសម្បត្តិ និងផលប្រយោជន៍ច្រើនជាងក្រុមដែលអ្នកបានស្បថនោះ។

مَا عِندَكُمۡ يَنفَدُۖ وَمَا عِندَ ٱللَّهِ بَاقٖۗ وَلَنَجۡزِيَنَّ ٱلَّذِينَ صَبَرُوٓاْ أَجۡرَهُم بِأَحۡسَنِ مَا كَانُواْ يَعۡمَلُونَ ٩٦

៩៦-អ្វីដែលមាននៅជាមួយពួកអ្នក(នៅក្នុងលោកិយនេះ) វានឹងរលាយសាបសូន្យ ហើយអ្វីដែលមាននៅជាមួយអល់ឡោះនោះគឺអមតៈ។ ហើយយើងពិតជានឹងតបស្នងឱ្យបណ្ដាអ្នកដែលបានអត់ធ្មត់នូវផលបុណ្យរបស់ពួកគេល្អជាងអ្វីដែលពួកគេធ្លាប់បានសាងកន្លងមក។

مَنۡ عَمِلَ صَٰلِحٗا مِّن ذَكَرٍ أَوۡ أُنثَىٰ وَهُوَ مُؤۡمِنٞ فَلَنُحۡيِيَنَّهُۥ حَيَوٰةٗ طَيِّبَةٗۖ وَلَنَجۡزِيَنَّهُمۡ أَجۡرَهُم بِأَحۡسَنِ مَا كَانُواْ يَعۡمَلُونَ ٩٧

៩៧-អ្នកណាហើយដែលបានសាងអំពើល្អក្នុងចំណោមបុរស ឬស្ត្រី ហើយគេជាអ្នកមានជំនឿទៀតនោះ គឺយើងពិតជានឹងធ្វើឱ្យគេមានជីវិតរស់នៅដ៏ល្អប្រសើរ និងតបស្នងឱ្យពួកគេនូវផលបុណ្យរបស់ពួកគេល្អជាងអ្វីដែលពួកគេធ្លាប់បានសាងកន្លងមក។

فَإِذَا قَرَأۡتَ ٱلۡقُرۡءَانَ فَٱسۡتَعِذۡ بِٱللَّهِ مِنَ ٱلشَّيۡطَٰنِ ٱلرَّجِيمِ ٩٨

៩៨-នៅពេលដែលអ្នកចង់សូត្រគម្ពីរគួរអានអ្នកត្រូវសូត្រ أَعُوذُ بِاللهِ مِنَ الشَّيْطَانِ الرَّجِيْمِ (សូមអល់ឡោះមេត្ដាបញ្ចៀសខ្ញុំពីស្ហៃតនដែលត្រូវគេដាក់បណ្ដាសាផងចុះ)។

إِنَّهُۥ لَيۡسَ لَهُۥ سُلۡطَٰنٌ عَلَى ٱلَّذِينَ ءَامَنُواْ وَعَلَىٰ رَبِّهِمۡ يَتَوَكَّلُونَ ٩٩

៩៩-ពិតប្រាកដណាស់ វា(ស្ហៃតន) គ្មានអំណាចអ្វីលើបណ្ដាអ្នកដែលមានជំនឿនោះឡើយ ហើយពួកគេប្រគល់ការទុកចិត្តទៅចំពោះម្ចាស់របស់ពួកគេតែមួយគត់។

إِنَّمَا سُلۡطَٰنُهُۥ عَلَى ٱلَّذِينَ يَتَوَلَّوۡنَهُۥ وَٱلَّذِينَ هُم بِهِۦ مُشۡرِكُونَ ١٠٠

១០០-តាមពិត អំណាចរបស់វាគឺមានតែនៅលើពួកដែលគោរពតាមវា និងពួកដែលធ្វើស្ហ៊ីរិកនឹងទ្រង់ប៉ុណ្ណោះ។

وَإِذَا بَدَّلۡنَآ ءَايَةٗ مَّكَانَ ءَايَةٖ وَٱللَّهُ أَعۡلَمُ بِمَا يُنَزِّلُ قَالُوٓاْ إِنَّمَآ أَنتَ مُفۡتَرِۭۚ بَلۡ أَكۡثَرُهُمۡ لَا يَعۡلَمُونَ ١٠١

១០១-ហើយនៅពេលយើងបានប្ដូរអាយ៉ាត់(ច្បាប់) មួយ(នៃគម្ពីរគួរអាន) ដោយអាយ៉ាត់មួយទៀត ហើយអល់ឡោះដឹងបំផុតនូវអ្វីដែលទ្រង់បញ្ចុះមកនោះ ពួកគេ(ពួកប្រឆាំង) បែរជានិយាយថាៈ ពិតប្រាកដណាស់ អ្នក(មូហាំម៉ាត់) គ្រាន់តែជាមនុស្សភូតកុហកទៅវិញ។ ផ្ទុយទៅវិញពួកគេភាគច្រើនមិនដឹងឡើយ។

قُلۡ نَزَّلَهُۥ رُوحُ ٱلۡقُدُسِ مِن رَّبِّكَ بِٱلۡحَقِّ لِيُثَبِّتَ ٱلَّذِينَ ءَامَنُواْ وَهُدٗى وَبُشۡرَىٰ لِلۡمُسۡلِمِينَ ١٠٢

១០២-ចូរអ្នក(មូហាំម៉ាត់) ពោលថាៈ ជីព្រីលបានបញ្ចុះវា (គម្ពីរគួរអាន) មកពីម្ចាស់របស់អ្នកដោយពិតប្រាកដ ដើម្បីពង្រឹងដល់បណ្ដាអ្នកដែលមានជំនឿ និងជាការចង្អុលបង្ហាញ ហើយនិងជាការផ្ដល់ដំណឹងល្អចំពោះបណ្ដាអ្នកមូស្លីម។

وَلَقَدۡ نَعۡلَمُ أَنَّهُمۡ يَقُولُونَ إِنَّمَا يُعَلِّمُهُۥ

១០៣-ហើយជាការពិតណាស់ យើងដឹងថាពួកគេ(ពួកមូស្ហរិ-

بَشَرٌۗ لِّسَانُ ٱلَّذِي يُلۡحِدُونَ إِلَيۡهِ أَعۡجَمِيّٞ وَهَٰذَا لِسَانٌ عَرَبِيّٞ مُّبِينٌ ﴿١٠٣﴾

គឺន) ពិតជានឹងនិយាយថាៈ តាមពិតអ្នកដែលបង្រៀនគេ( មូហាំ-ម៉ាត់) គ្រាន់តែជាមនុស្សធម្មតាប៉ុណ្ណោះ ។ ភាសាដែលពួកគេចោទប្រកាន់គេជាភាសាផ្សេង ហើយ( គម្ពីរគួរអាន) នេះជាភាសាអារ៉ាប់យ៉ាងច្បាស់លាស់ ។

إِنَّ ٱلَّذِينَ لَا يُؤۡمِنُونَ بِـَٔايَٰتِ ٱللَّهِ لَا يَهۡدِيهِمُ ٱللَّهُ وَلَهُمۡ عَذَابٌ أَلِيمٌ ﴿١٠٤﴾

១០៤-ពិតប្រាកដណាស់ ពួកដែលគ្មានជំនឿនឹងអាយ៉ាត់ៗរបស់អល់ឡោះនោះ គឺអល់ឡោះមិនចង្អុលបង្ហាញពួកគេឡើយ ហើយពួកគេនឹងទទួលទារុណកម្មដ៏ឈឺចាប់បំផុត ។

إِنَّمَا يَفۡتَرِي ٱلۡكَذِبَ ٱلَّذِينَ لَا يُؤۡمِنُونَ بِـَٔايَٰتِ ٱللَّهِۖ وَأُوْلَٰٓئِكَ هُمُ ٱلۡكَٰذِبُونَ ﴿١٠٥﴾

១០៥-តាមពិត ពួកដែលគ្មានជំនឿនឹងអាយ៉ាត់ៗរបស់អល់ឡោះគ្រាន់តែប្រឌិតរឿងភូតកុហកប៉ុណ្ណោះ ។ ហើយពួកទាំងនោះ គឺជាពួកដែលភូតកុហក ។

مَن كَفَرَ بِٱللَّهِ مِنۢ بَعۡدِ إِيمَٰنِهِۦٓ إِلَّا مَنۡ أُكۡرِهَ وَقَلۡبُهُۥ مُطۡمَئِنُّۢ بِٱلۡإِيمَٰنِ وَلَٰكِن مَّن شَرَحَ بِٱلۡكُفۡرِ صَدۡرٗا فَعَلَيۡهِمۡ غَضَبٞ مِّنَ ٱللَّهِ وَلَهُمۡ عَذَابٌ عَظِيمٞ ﴿١٠٦﴾

១០៦-អ្នកណាហើយបានប្រឆាំងនឹងអល់ឡោះក្រោយពីគេមានជំនឿហើយនោះ ( គេនឹងទទួលការខឹងសម្បាពីអល់ឡោះ) លើកលែងតែអ្នកដែលត្រូវបានគេគាបសង្កត់ ហើយចិត្តរបស់គេនឹងនរនឹងជំនឿប៉ុណ្ណោះ ។ ប៉ុន្តែអ្នកណាហើយដែលព្រមទទួលយកភាពគ្មានជំនឿនោះ គឺពួកគេនឹងទទួលការខឹងសម្បាពីអល់ឡោះ ហើយពួកគេនឹងទទួលទារុណកម្មយ៉ាងធ្ងន់ធ្ងរបំផុត ។

ذَٰلِكَ بِأَنَّهُمُ ٱسۡتَحَبُّواْ ٱلۡحَيَوٰةَ ٱلدُّنۡيَا عَلَى ٱلۡأٓخِرَةِ وَأَنَّ ٱللَّهَ لَا يَهۡدِي ٱلۡقَوۡمَ ٱلۡكَٰفِرِينَ ﴿١٠٧﴾

១០៧-នោះដោយសារតែពួកគេបានស្រឡាញ់ការរស់នៅក្នុងលោកិយជាងថ្ងៃបរលោក ហើយពិតប្រាកដណាស់ អល់ឡោះមិនចង្អុលបង្ហាញដល់ក្រុមដែលគ្មានជំនឿឡើយ ។

أُوْلَٰٓئِكَ ٱلَّذِينَ طَبَعَ ٱللَّهُ عَلَىٰ قُلُوبِهِمۡ وَسَمۡعِهِمۡ وَأَبۡصَٰرِهِمۡۖ وَأُوْلَٰٓئِكَ هُمُ ٱلۡغَٰفِلُونَ ﴿١٠٨﴾

១០៨-ពួកទាំងនោះ គឺជាពួកដែលអល់ឡោះបានបោះត្រាភ្ជិតលើចិត្តរបស់ពួកគេ និងត្រចៀករបស់ពួកគេ ហើយនិងភ្នែករបស់ពួកគេ ។ ហើយពួកទាំងនោះគឺជាពួកដែលព្រងើយកន្តើយ ។

لَا جَرَمَ أَنَّهُمۡ فِي ٱلۡأٓخِرَةِ هُمُ ٱلۡخَٰسِرُونَ ﴿١٠٩﴾

១០៩-គ្មានការសង្ស័យឡើយ ពិតប្រាកដណាស់ពួកគេគឺជាពួកដែលខាតបង់នៅថ្ងៃបរលោក ។

ثُمَّ إِنَّ رَبَّكَ لِلَّذِينَ هَاجَرُواْ مِنۢ بَعۡدِ
مَا فُتِنُواْ ثُمَّ جَٰهَدُواْ وَصَبَرُوٓاْ إِنَّ رَبَّكَ
مِنۢ بَعۡدِهَا لَغَفُورٞ رَّحِيمٞ ١١٠

១១០-ក្រោយមក ពិតប្រាកដណាស់ ម្ចាស់របស់អ្នកជាអ្នកជួយដល់បណ្ដាអ្នកដែលបានភៀសខ្លួន(ចេញពីម៉ាក្កះ) ក្រោយពីពួកគេត្រូវបានគេធ្វើទុក្ខបុកម្នេញ បន្ទាប់មកពួកគេបានតស៊ូ(ក្នុងមាគ៌ារបស់អល់ឡោះ) និងបានអត់ធ្មត់។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺមហាអភ័យទោស មហាអាណិតស្រឡាញ់ក្រោយពីការសារភាពកំហុសរបស់ពួកគេ។

۞ يَوۡمَ تَأۡتِي كُلُّ نَفۡسٖ تُجَٰدِلُ عَن نَّفۡسِهَا
وَتُوَفَّىٰ كُلُّ نَفۡسٖ مَّا عَمِلَتۡ وَهُمۡ لَا
يُظۡلَمُونَ ١١١

១១១-(ចូរចងចាំ)នៅថ្ងៃ(បរលោក)ដែលបុគ្គលគ្រប់រូបដេញដោលចំពោះខ្លួនឯង ហើយបុគ្គលគ្រប់រូបនឹងត្រូវគេ(អល់ឡោះ)តបស្នងនូវអ្វីដែលគេបានប្រព្រឹត្ត ដោយពួកគេនឹងមិនត្រូវគេបំពានឡើយ។

وَضَرَبَ ٱللَّهُ مَثَلٗا قَرۡيَةٗ كَانَتۡ ءَامِنَةٗ
مُّطۡمَئِنَّةٗ يَأۡتِيهَا رِزۡقُهَا رَغَدٗا مِّن كُلِّ
مَكَانٖ فَكَفَرَتۡ بِأَنۡعُمِ ٱللَّهِ فَأَذَٰقَهَا ٱللَّهُ
لِبَاسَ ٱلۡجُوعِ وَٱلۡخَوۡفِ بِمَا كَانُواْ
يَصۡنَعُونَ ١١٢

១១២-ហើយអល់ឡោះបានលើកយកឧទាហរណ៍ក្រុងមួយ(ម៉ាក្កះ)ដែលមានសុខសន្តិភាព ដែលលាភសក្ការៈរបស់វាមានគ្រប់បែបយ៉ាងមកពីគ្រប់ទិសទី។ ក្រោយមកវា(អ្នកក្រុងម៉ាក្កះ)បានបដិសេធនឹងនៀកម៉ាត់ទាំងឡាយរបស់អល់ឡោះ។ ហើយអល់ឡោះបានឱ្យវាភ្លក្សនូវភាពអត់ឃ្លាន និងភាពភ័យខ្លាច ដោយសារតែអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត។

وَلَقَدۡ جَآءَهُمۡ رَسُولٞ مِّنۡهُمۡ فَكَذَّبُوهُ
فَأَخَذَهُمُ ٱلۡعَذَابُ وَهُمۡ ظَٰلِمُونَ ١١٣

១១៣-ហើយជាការពិតណាស់ អ្នកនាំសារ(មូហាំម៉ាត់)ដែលចេញពីចំណោមពួកគេបានមកដល់ពួកគេ តែពួកគេបែរជាបានបដិសេធនឹងគេទៅវិញ។ បន្ទាប់មកទារុណកម្មបានធ្លាក់លើពួកគេខណៈដែលពួកគេជាពួកដែលបំពាន។

فَكُلُواْ مِمَّا رَزَقَكُمُ ٱللَّهُ حَلَٰلٗا طَيِّبٗا
وَٱشۡكُرُواْ نِعۡمَتَ ٱللَّهِ إِن كُنتُمۡ إِيَّاهُ
تَعۡبُدُونَ ١١٤

១១៤-ដូច្នេះ ចូរពួកអ្នក(មានជំនឿ)បរិភោគនូវអ្វីដែលហាឡាល់ស្អាតស្អំដែលអល់ឡោះបានប្រទានឱ្យពួកអ្នកចុះ។ ហើយចូរពួកអ្នកថ្លែងអំណរគុណចំពោះនៀកម៉ាត់របស់អល់ឡោះ ប្រសិនបើពួកអ្នកគោរពសក្ការៈទៅចំពោះទ្រង់នោះ។

إِنَّمَا حَرَّمَ عَلَيۡكُمُ ٱلۡمَيۡتَةَ وَٱلدَّمَ وَلَحۡمَ
ٱلۡخِنزِيرِ وَمَآ أُهِلَّ لِغَيۡرِ ٱللَّهِ بِهِۦۖ فَمَنِ ٱضۡطُرَّ
غَيۡرَ بَاغٖ وَلَا عَادٖ فَإِنَّ ٱللَّهَ غَفُورٞ

១១៥-ការពិតទ្រង់បានហាមឃាត់ចំពោះពួកអ្នកនូវសត្វស្លាប់ និងឈាម និងសាច់ជ្រូកហើយនិងអ្វីដែលគេសំឡេះដើម្បីបូជាម្ចាស់ផ្សេងក្រៅពីអល់ឡោះ។ ហេតុនេះ បុគ្គលណាត្រូវបានគេបង្ខំ(ឱ្យទទួលទានអ្វីៗទាំងនេះ)ដោយពុំមានចេតនានិងមិនលើសពីតំរូវ

رَّحِيمٌ ﴿١١٥﴾

ការចាំបាច់នោះ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَلَا تَقُولُواْ لِمَا تَصِفُ أَلۡسِنَتُكُمُ ٱلۡكَذِبَ
هَٰذَا حَلَٰلٞ وَهَٰذَا حَرَامٞ لِّتَفۡتَرُواْ عَلَى ٱللَّهِ
ٱلۡكَذِبَۚ إِنَّ ٱلَّذِينَ يَفۡتَرُونَ عَلَى ٱللَّهِ ٱلۡكَذِبَ
لَا يُفۡلِحُونَ ﴿١١٦﴾

១១៦-ហើយចូរពួកអ្នកកុំនិយាយនូវពាក្យភូតកុហកចំពោះអ្វីដែលអណ្តាតរបស់ពួកអ្នកពណ៌នាថាៈ នេះជារបស់ហាឡាល់ (ស្របនឹងច្បាប់អ៊ីស្លាម) ហើយនេះជារបស់ហារ៉ាម (ផ្ទុយនឹងច្បាប់អ៊ីស្លាម) ដើម្បីពួកអ្នកប្រឌិតឡើងនូវពាក្យភូតកុហកទៅលើអល់ឡោះឱ្យសោះ ។ ពិតប្រាកដណាស់ ពួកដែលប្រឌិតពាក្យភូតកុហកលើអល់ឡោះនោះ គឺពួកគេមិនជោគជ័យឡើយ ។

مَتَٰعٞ قَلِيلٞ وَلَهُمۡ عَذَابٌ أَلِيمٞ ﴿١١٧﴾

១១៧-ការសប្បាយរីករាយ (របស់ពួកគេនៅលើលោកិយនេះ) គឺរយៈពេលខ្លីបំផុត ហើយ (នៅថ្ងៃបរលោកវិញ) ពួកគេនឹងទទួលទារុណកម្មដ៏ឈឺចាប់បំផុត ។

وَعَلَى ٱلَّذِينَ هَادُواْ حَرَّمۡنَا مَا قَصَصۡنَا عَلَيۡكَ
مِن قَبۡلُۖ وَمَا ظَلَمۡنَٰهُمۡ وَلَٰكِن كَانُوٓاْ أَنفُسَهُمۡ
يَظۡلِمُونَ ﴿١١٨﴾

១១៨-ហើយយើងបានហាមឃាត់ពួកយ៉ាហ៊ូទីចំពោះអ្វីដែលយើងបាននិទានប្រាប់អ្នក (មូហាំម៉ាត់) ពីមុនមក ។ ហើយយើងមិនបានបំពានលើពួកគេឡើយ ក៏ប៉ុន្តែពួកគេវិញទេដែលបានបំពានលើខ្លួនឯងនោះ ។

ثُمَّ إِنَّ رَبَّكَ لِلَّذِينَ عَمِلُواْ ٱلسُّوٓءَ بِجَهَٰلَةٖ
ثُمَّ تَابُواْ مِنۢ بَعۡدِ ذَٰلِكَ وَأَصۡلَحُوٓاْ إِنَّ رَبَّكَ
مِنۢ بَعۡدِهَا لَغَفُورٞ رَّحِيمٌ ﴿١١٩﴾

១១៩-បន្ទាប់មកពិតប្រាកដណាស់ ម្ចាស់របស់អ្នកជាអ្នកអភ័យទោសចំពោះពួកដែលបានសាងអំពើអាក្រក់ដោយភាពល្ងង់ខ្លៅ ក្រោយមកពួកគេបានសារភាពទោសកំហុស និងបានកែខ្លួនវិញ ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកមហាអភ័យទោស មហាអាណិតស្រឡាញ់បន្ទាប់ពីការសារភាពកំហុសនោះ ។

إِنَّ إِبۡرَٰهِيمَ كَانَ أُمَّةٗ قَانِتٗا لِّلَّهِ حَنِيفٗا وَلَمۡ
يَكُ مِنَ ٱلۡمُشۡرِكِينَ ﴿١٢٠﴾

១២០-ពិតប្រាកដណាស់ អ៊ីព្រហ៊ីមជាអ្នកដឹកនាំដែលគោរពតាមអល់ឡោះដោយចិត្តស្មោះស ហើយគេមិនស្ថិតនៅក្នុងចំណោមពួកមុស្ហរីគីនឡើយ ។

شَاكِرٗا لِّأَنۡعُمِهِۚ ٱجۡتَبَىٰهُ وَهَدَىٰهُ إِلَىٰ صِرَٰطٖ
مُّسۡتَقِيمٖ ﴿١٢١﴾

១២១-គេជាអ្នកដឹងគុណចំពោះនៀកម៉ាត់ទាំងឡាយរបស់ទ្រង់ ។ ទ្រង់បានជ្រើសរើសគេ និងបានចង្អុលបង្ហាញគេទៅកាន់មាគ៌ាដ៏ត្រឹមត្រូវ ។

وَءَاتَيۡنَٰهُ فِي ٱلدُّنۡيَا حَسَنَةٗۖ وَإِنَّهُۥ فِي ٱلۡأٓخِرَةِ

១២២-ហើយយើងបានប្រទានឱ្យគេនូវប្រការល្អៗនៅក្នុងលោកិយនេះ ។ ហើយពិតប្រាកដណាស់ នៅថ្ងៃបរលោកគេនឹង

لِمِنَ ٱلصَّٰلِحِينَ ﴿١٢٢﴾

ស្ថិតក្នុងចំណោមអ្នកដែលបានសាងអំពើល្អ ។

ثُمَّ أَوۡحَيۡنَآ إِلَيۡكَ أَنِ ٱتَّبِعۡ مِلَّةَ إِبۡرَٰهِيمَ حَنِيفٗاۖ وَمَا كَانَ مِنَ ٱلۡمُشۡرِكِينَ ﴿١٢٣﴾

១២៣-ក្រោយមកយើងបានផ្តល់វ៉ាហ៊ីដល់អ្នក(មូហាំម៉ាត់) ថា: ចូរអ្នកដើរតាមសាសនារបស់អ៊ីព្រហ៊ីមឱ្យបានត្រឹមត្រូវចុះ ហើយគេមិនស្ថិតក្នុងចំណោមពួកមូស្ហរីគីនឡើយ ។

إِنَّمَا جُعِلَ ٱلسَّبۡتُ عَلَى ٱلَّذِينَ ٱخۡتَلَفُواْ فِيهِۚ وَإِنَّ رَبَّكَ لَيَحۡكُمُ بَيۡنَهُمۡ يَوۡمَ ٱلۡقِيَٰمَةِ فِيمَا كَانُواْ فِيهِ يَخۡتَلِفُونَ ﴿١٢٤﴾

១២៤-តាមពិតគេ(អល់ឡោះ)បានបង្កើតថ្ងៃសៅរ៍ឱ្យទៅពួក (យ៉ាហ៊ូទី)ដែលខ្វែងគំនិតគ្នានៅក្នុងរឿងនោះ ។ ហើយពិតប្រាកដណាស់ ម្ចាស់របស់ពួកអ្នកនឹងកាត់សេចក្តីរវាងពួកគេនៅថ្ងៃបរលោកនូវអ្វីដែលពួកគេធ្លាប់បានខ្វែងគំនិតគ្នា ។

ٱدۡعُ إِلَىٰ سَبِيلِ رَبِّكَ بِٱلۡحِكۡمَةِ وَٱلۡمَوۡعِظَةِ ٱلۡحَسَنَةِۖ وَجَٰدِلۡهُم بِٱلَّتِي هِيَ أَحۡسَنُۚ إِنَّ رَبَّكَ هُوَ أَعۡلَمُ بِمَن ضَلَّ عَن سَبِيلِهِۦۖ وَهُوَ أَعۡلَمُ بِٱلۡمُهۡتَدِينَ ﴿١٢٥﴾

១២៥-ចូរអ្នក(មូហាំម៉ាត់)អំពាវនាវ(មនុស្សលោក)ទៅកាន់មាគ៌ានៃម្ចាស់របស់អ្នកដោយគតិបណ្ឌិត និងប្រៀនប្រដៅតាមវិធីសាស្ត្រដ៏ល្អចុះ ។ ហើយចូរអ្នកជជែកជាមួយពួកគេតាមមធ្យោបាយណាដែលល្អបំផុត ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកដឹងបំផុតចំពោះអ្នកដែលវង្វេងចេញពីមាគ៌ារបស់ទ្រង់ ។ ហើយទ្រង់ដឹងបំផុតចំពោះបណ្តាអ្នកដែលទទួលបានការចង្អុលបង្ហាញ ។

وَإِنۡ عَاقَبۡتُمۡ فَعَاقِبُواْ بِمِثۡلِ مَا عُوقِبۡتُم بِهِۦۖ وَلَئِن صَبَرۡتُمۡ لَهُوَ خَيۡرٞ لِّلصَّٰبِرِينَ ﴿١٢٦﴾

១២៦-ហើយប្រសិនបើពួកអ្នកដាក់ទណ្ឌកម្ម(លើសត្រូវរបស់ពួកអ្នក) ចូរពួកអ្នកដាក់ទណ្ឌកម្មដូចនឹងអ្វីដែលពួកគេបានដាក់ទណ្ឌកម្មមកលើពួកអ្នកចុះ ។ តែប្រសិនបើពួកអ្នកអត់ធ្មត់វិញ វាពិតជាប្រសើរបំផុតសម្រាប់បណ្តាអ្នកដែលអត់ធ្មត់ ។

وَٱصۡبِرۡ وَمَا صَبۡرُكَ إِلَّا بِٱللَّهِۚ وَلَا تَحۡزَنۡ عَلَيۡهِمۡ وَلَا تَكُ فِي ضَيۡقٖ مِّمَّا يَمۡكُرُونَ ﴿١٢٧﴾

១២៧-ចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់ ព្រោះការអត់ធ្មត់របស់អ្នកគ្មានអ្វីក្រៅពីការជួយពង្រឹងពីអល់ឡោះឡើយ ។ ហើយចូរអ្នកកុំព្រួយបារម្ភចំពោះពួកគេ និងមិនត្រូវកើតទុក្ខអំពីអ្វីដែលពួកគេរៀបចំល្បិចកលនោះឡើយ ។

إِنَّ ٱللَّهَ مَعَ ٱلَّذِينَ ٱتَّقَواْ وَّٱلَّذِينَ هُم مُّحۡسِنُونَ ﴿١٢٨﴾

១២៨-ពិតប្រាកដណាស់ អល់ឡោះនៅជាមួយបណ្តាអ្នកដែលកោតខ្លាច និងបណ្តាអ្នកដែលសាងអំពើល្អ ។

## سورة الإسراء

## ជំពូកអាល់អ៊ីសរ៉ក

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់ ។

سُبْحَٰنَ ٱلَّذِىٓ أَسْرَىٰ بِعَبْدِهِۦ لَيْلًا مِّنَ ٱلْمَسْجِدِ ٱلْحَرَامِ إِلَى ٱلْمَسْجِدِ ٱلْأَقْصَا ٱلَّذِى بَٰرَكْنَا حَوْلَهُۥ لِنُرِيَهُۥ مِنْ ءَايَٰتِنَآ ۚ إِنَّهُۥ هُوَ ٱلسَّمِيعُ ٱلْبَصِيرُ ﴿١﴾

១-អល់ឡោះមហាជ្រះស្អាតដែលបាននាំយកខ្ញុំរបស់ទ្រង់(មូហាំម៉ាត់)ធ្វើដំណើរនៅពេលយប់ចេញពីម៉ាស្ជិទអាល់ហារ៉ម(ម៉ាក្កះ)ទៅកាន់ម៉ាស្ជិទអាល់អុកសរ(យេរូសាឡឹម) ដែលយើងបានប្រសិទ្ធពរជ័យនៅជុំវិញវា(ម៉ាស្ជិទអាល់អុកសរ) គឺដើម្បីយើងនឹងបង្ហាញឱ្យគេឃើញពីភស្តុតាងនានារបស់យើង។ ពិតប្រាកដណាស់ ទ្រង់មហាឮ មហាឃើញ។

وَءَاتَيْنَا مُوسَى ٱلْكِتَٰبَ وَجَعَلْنَٰهُ هُدًى لِّبَنِىٓ إِسْرَٰٓءِيلَ أَلَّا تَتَّخِذُوا۟ مِن دُونِى وَكِيلًا ﴿٢﴾

២-ហើយយើងបានប្រទានគម្ពីរ(តាវ៉រ៉ត)ឱ្យមូសា និងបានបង្កើតវាឡើងជាការចង្អុលបង្ហាញសម្រាប់អំបូរអ៊ីស្រាអែល ដើម្បីកុំឱ្យពួកអ្នកយកអ្នកគាំពារណាក្រៅពីយើង។

ذُرِّيَّةَ مَنْ حَمَلْنَا مَعَ نُوحٍ ۚ إِنَّهُۥ كَانَ عَبْدًا شَكُورًا ﴿٣﴾

៣-ឱកូនចៅរបស់អ្នកដែលយើងបាននាំយកទៅ(នៅក្នុងសំពៅ) ជាមួយនឹងនូហ! ពិតប្រាកដណាស់ គេគឺជាខ្ញុំម្នាក់ដែលដឹងគុណបំផុត។

وَقَضَيْنَآ إِلَىٰ بَنِىٓ إِسْرَٰٓءِيلَ فِى ٱلْكِتَٰبِ لَتُفْسِدُنَّ فِى ٱلْأَرْضِ مَرَّتَيْنِ وَلَتَعْلُنَّ عُلُوًّا كَبِيرًا ﴿٤﴾

៤-ហើយយើងបានប្រាប់ទៅអំបូរអ៊ីស្រាអែលតាមរយៈគម្ពីរ(តាវ៉រ៉ត)ឱ្យដឹងថាៈ ពួកអ្នកពិតជានឹងបង្កវិនាសកម្មនៅលើផែនដីចំនួនពីរដង ហើយពួកអ្នកនឹងរំលោភបំពានដោយក្រអើតក្រទមជាទីបំផុត។

فَإِذَا جَآءَ وَعْدُ أُولَىٰهُمَا بَعَثْنَا عَلَيْكُمْ عِبَادًا لَّنَآ أُو۟لِى بَأْسٍ شَدِيدٍ فَجَاسُوا۟ خِلَٰلَ ٱلدِّيَارِ ۚ وَكَانَ وَعْدًا مَّفْعُولًا ﴿٥﴾

៥-ហើយនៅពេលដែលកិច្ចសន្យាទីមួយនៃកិច្ចសន្យាទាំងពីរបានមកដល់ យើងក៏បានចាត់តាំងខ្ញុំរបស់យើង(ពួកចាលូត)ដែលមានភាពក្លាហានខ្លាំងក្លាបំផុតប្រឆាំងនឹងពួកអ្នក(ពួកអ៊ីស្រាអែល) ដោយពួកគេបានចូលលុកលុយទៅផ្ទែកខាងក្នុងនៃលំនៅដ្ឋាន(របស់ពួកអ្នក)។ នោះហើយជាកិច្ចសន្យាដែលត្រូវបានគេអនុវត្ត។

ثُمَّ رَدَدْنَا لَكُمُ ٱلْكَرَّةَ عَلَيْهِمْ وَأَمْدَدْنَٰكُم بِأَمْوَٰلٍ وَبَنِينَ وَجَعَلْنَٰكُمْ أَكْثَرَ نَفِيرًا ﴿٦﴾

៦-ក្រោយមក យើងបានផ្តល់ឱ្យពួកអ្នក(ពួកអ៊ីស្រាអែល)នូវជ័យជំនះលើពួកគេ(ពួកចាលូត)វិញ និងបានបន្ថែមឱ្យពួកអ្នកនូវទ្រព្យសម្បត្តិ និងកូនចៅជាច្រើន ព្រមទាំងបានធ្វើឱ្យពួកអ្នកមានធនធានមនុស្សច្រើន(ជាងសត្រូវ)ទៀតផង។

إِنْ أَحْسَنتُمْ أَحْسَنتُمْ لِأَنفُسِكُمْ ۖ وَإِنْ أَسَأْتُمْ فَلَهَا ۚ فَإِذَا جَآءَ وَعْدُ ٱلْءَاخِرَةِ لِيَسُۥٓـُٔوا۟

៧-ប្រសិនបើពួកអ្នកបានសាងអំពើល្អ គឺពួកអ្នកបានសាងអំពើល្អសម្រាប់ខ្លួនឯង។ តែប្រសិនបើពួកអ្នកបានសាងអំពើអាក្រក់វិញ គឺពួកអ្នកនឹងទទួលវា។ បន្ទាប់មកនៅពេលដែលកិច្ចសន្យាចុង

وُجُوهَكُمْ وَلِيَدْخُلُوا۟ ٱلْمَسْجِدَ كَمَا
دَخَلُوهُ أَوَّلَ مَرَّةٍ وَلِيُتَبِّرُوا۟ مَا عَلَوْا۟ تَتْبِيرًا ﴿٧﴾

ក្រោយបានមកដល់(យើងបានចាត់តាំងបណ្ដាអ្នកក្លាហាន) ដើម្បីពួកគេធ្វើឱ្យពួកអ្នកអាម៉ាស់មុខវិញ និងដើម្បីពួកគេចូលទៅក្នុងម៉ាស្ជិទ(បៃតុលម៉ុកទីស)ដូចដែលពួកគេបានចូលកាលពីលើកដំបូងដែរ ព្រមទាំងពួកគេបំផ្លាញខ្ទេចខ្ទីនូវអ្វីៗដែលនៅក្រោមការត្រួតត្រារបស់ពួកគេ។

عَسَىٰ رَبُّكُمْ أَن يَرْحَمَكُمْ ۚ وَإِنْ عُدتُّمْ عُدْنَا ۘ
وَجَعَلْنَا جَهَنَّمَ لِلْكَٰفِرِينَ حَصِيرًا ﴿٨﴾

៨-សង្ឃឹមថាម្ចាស់របស់ពួកអ្នកនឹងសន្ដោសប្រណីដល់ពួកអ្នក តែប្រសិនបើពួកអ្នកត្រឡប់ទៅ(ធ្វើអំពើអាក្រក់)វិញនោះគឺយើងក៏ត្រឡប់(ទៅដាក់ទណ្ឌកម្ម)វិញដែរ ហើយយើងបានបង្កើតនរកជើហាន់ណាំជាគុកសម្រាប់ពួកដែលប្រឆាំង។

إِنَّ هَٰذَا ٱلْقُرْءَانَ يَهْدِى لِلَّتِى هِىَ أَقْوَمُ
وَيُبَشِّرُ ٱلْمُؤْمِنِينَ ٱلَّذِينَ يَعْمَلُونَ ٱلصَّٰلِحَٰتِ
أَنَّ لَهُمْ أَجْرًا كَبِيرًا ﴿٩﴾

៩-ពិតប្រាកដណាស់ គម្ពីរគួរអាននេះ វាចង្អុលបង្ហាញ(មនុស្សលោក)ទៅរកមាគ៌ាដែលត្រឹមត្រូវ និងផ្ដល់ដំណឹងរីករាយដល់បណ្ដាអ្នកមានជំនឿដែលសាងនូវអំពើល្អថា: ពិតប្រាកដណាស់ ពួកគេនឹងទទួលបានផលបុណ្យយ៉ាងធំធេងបំផុត(ឋានសួគ៌)។

وَأَنَّ ٱلَّذِينَ لَا يُؤْمِنُونَ بِٱلْءَاخِرَةِ أَعْتَدْنَا لَهُمْ
عَذَابًا أَلِيمًا ﴿١٠﴾

១០-ហើយពិតប្រាកដណាស់ ពួកដែលគ្មានជំនឿនឹងថ្ងៃបរលោក គឺយើងបានរៀបចំសម្រាប់ពួកគេនូវទារុណកម្មយ៉ាងឈឺចាប់បំផុត។

وَيَدْعُ ٱلْإِنسَٰنُ بِٱلشَّرِّ دُعَآءَهُۥ بِٱلْخَيْرِ ۖ وَكَانَ
ٱلْإِنسَٰنُ عَجُولًا ﴿١١﴾

១១-ហើយមនុស្សលោក(ពេលខ្លះ)បួងសួងសុំប្រការអាក្រក់(ពីអល់ឡោះនៅពេលដែលគេមានកំហឹង)ដូចជាការបួងសួងសុំរបស់គេនូវប្រការល្អដែរ។ ហើយមនុស្សលោក គឺទំលាប់ប្រញាប់ប្រញាល់(ក្នុងការសុំឬធ្វើអ្វីមួយ)។

وَجَعَلْنَا ٱلَّيْلَ وَٱلنَّهَارَ ءَايَتَيْنِ ۖ فَمَحَوْنَآ
ءَايَةَ ٱلَّيْلِ وَجَعَلْنَآ ءَايَةَ ٱلنَّهَارِ مُبْصِرَةً لِّتَبْتَغُوا۟
فَضْلًا مِّن رَّبِّكُمْ وَلِتَعْلَمُوا۟ عَدَدَ ٱلسِّنِينَ
وَٱلْحِسَابَ ۚ وَكُلَّ شَىْءٍ فَصَّلْنَٰهُ
تَفْصِيلًا ﴿١٢﴾

១២-ហើយយើងបានបង្កើតពេលយប់ និងពេលថ្ងៃជាសញ្ញាពីរ។ ក្រោយមកយើងបានបំបាត់នូវសញ្ញាពេលយប់(ភាពងងឹត) ដោយយើងបានបង្កើតសញ្ញាពេលថ្ងៃជាពន្លឺដើម្បីឱ្យពួកអ្នកស្វែងរកលាភសក្ការៈពីម្ចាស់របស់ពួកអ្នក និងដើម្បីឱ្យពួកអ្នកដឹងចំនួនឆ្នាំ និងការគណនា។ ហើយអ្វីៗគ្រប់បែបយ៉ាងគឺយើងបានបញ្ជាក់វាយ៉ាងល្អិតល្អន់។

وَكُلَّ إِنسَٰنٍ أَلْزَمْنَٰهُ طَٰٓئِرَهُۥ فِى عُنُقِهِۦ ۖ وَنُخْرِجُ

១៣-ហើយមនុស្សលោកគ្រប់រូប គឺយើងបានចងភ្ជាប់ទង្វើរបស់ពួកគេទៅនឹងកញ្ចឹងករបស់គេ ហើយយើងនឹងបង្ហាញដល់គេ

لَهُۥ يَوۡمَ ٱلۡقِيَٰمَةِ كِتَٰبٗا يَلۡقَىٰهُ مَنشُورًا ﴿١٣﴾

វិញនៅថ្ងៃបរលោកនូវសៀវភៅកំណត់ហេតុ ដែលគេនឹងឃើញវា ដោយចំហ។

ٱقۡرَأۡ كِتَٰبَكَ كَفَىٰ بِنَفۡسِكَ ٱلۡيَوۡمَ عَلَيۡكَ
حَسِيبٗا ﴿١٤﴾

១៤-(មានគេនិយាយទៅកាន់អ្នកនោះថា) ចូរអ្នកអានសៀវភៅកំណត់ហេតុរបស់អ្នកចុះ គ្រប់គ្រាន់ហើយនៅថ្ងៃនេះ អ្នកត្រូវគិតគូរដោយខ្លួនឯង។

مَّنِ ٱهۡتَدَىٰ فَإِنَّمَا يَهۡتَدِي لِنَفۡسِهِۦۖ وَمَن
ضَلَّ فَإِنَّمَا يَضِلُّ عَلَيۡهَاۚ وَلَا تَزِرُ وَازِرَةٞ وِزۡرَ
أُخۡرَىٰۗ وَمَا كُنَّا مُعَذِّبِينَ حَتَّىٰ نَبۡعَثَ
رَسُولٗا ﴿١٥﴾

១៥-អ្នកណាដែលបានទទួលការចង្អុលបង្ហាញ គឺពិតប្រាកដណាស់ អ្នកនោះនឹងទទួលបានការចង្អុលបង្ហាញសម្រាប់ខ្លួនឯង។ ហើយអ្នកណាដែលបានវង្វេង គឺពិតប្រាកដណាស់ អ្នកនោះនឹងវង្វេងដោយខ្លួនឯង។ ហើយអ្នកដែលធ្វើអាក្រក់មិនអាចទទួលបន្ទុកចំពោះបាបកម្មរបស់អ្នកដទៃបានឡើយ។ ហើយយើងមិនដែលដាក់ទណ្ឌកម្មនរណាម្នាក់ឡើយ លុះត្រាតែយើងតែងតាំងអ្នកនាំសារណាម្នាក់(ដើម្បីអំពាវនាវពួកគេ)ជាមុនសិន។

وَإِذَآ أَرَدۡنَآ أَن نُّهۡلِكَ قَرۡيَةً أَمَرۡنَا مُتۡرَفِيهَا
فَفَسَقُواْ فِيهَا فَحَقَّ عَلَيۡهَا ٱلۡقَوۡلُ فَدَمَّرۡنَٰهَا
تَدۡمِيرٗا ﴿١٦﴾

១៦-ហើយនៅពេលដែលយើងមានចេតនាបំផ្លាញភូមិស្រុកណាមួយ យើងបានបញ្ជាមេដឹកនាំរបស់វា(ឱ្យគោរពតាមអល់ឡោះ) តែពួកគេបែរជាប្រព្រឹត្តបទល្មើសនៅក្នុង(ភូមិស្រុក)នោះទៅវិញ ពេលនោះពាក្យដាក់ទារុណកម្មត្រូវធ្លាក់ទៅលើវា(ភូមិស្រុក) ក្រោយមកយើងបានបំផ្លាញវាខ្ទេចខ្ទីអស់។

وَكَمۡ أَهۡلَكۡنَا مِنَ ٱلۡقُرُونِ مِنۢ بَعۡدِ
نُوحٖۗ وَكَفَىٰ بِرَبِّكَ بِذُنُوبِ عِبَادِهِۦ خَبِيرَۢا
بَصِيرٗا ﴿١٧﴾

១៧-ហើយយើងបានបំផ្លាញប្រជាជាតិជាច្រើនជំនាន់មកហើយក្រោយពីនូហ។ គ្រប់គ្រាន់ហើយម្ចាស់របស់អ្នក(មូហាំម៉ាត់)ជាអ្នកដឹង ជាអ្នកឃើញបំផុតនូវបាបកម្មនៃខ្ញុំទាំងអស់របស់ទ្រង់។

مَّن كَانَ يُرِيدُ ٱلۡعَاجِلَةَ عَجَّلۡنَا لَهُۥ فِيهَا مَا
نَشَآءُ لِمَن نُّرِيدُ ثُمَّ جَعَلۡنَا لَهُۥ جَهَنَّمَ يَصۡلَىٰهَا
مَذۡمُومٗا مَّدۡحُورٗا ﴿١٨﴾

១៨-អ្នកណាហើយប្រាថ្នាចង់បាន(ការសប្បាយរីករាយនៅលើលោកិយ)ភ្លាមៗ យើងនឹងផ្តល់ឱ្យគេវិញភ្លាមៗដែរ នូវអ្វីដែលយើងមានចេតនាចំពោះអ្នកណាដែលយើងមានចេតនា។ បន្ទាប់មកយើងបានរៀបចំនរកជើហាន់ណាំឱ្យគេដែលគេនឹងចូលទៅក្នុងនោះដោយការស្តីបន្ទោសឃ្លាតឆ្ងាយពីការសន្តោសប្រណីរបស់អល់ឡោះ។

وَمَنۡ أَرَادَ ٱلۡأٓخِرَةَ وَسَعَىٰ لَهَا سَعۡيَهَا

១៩-រីឯនរណាហើយដែលប្រាថ្នាចង់បានថ្ងៃបរលោក(ឋានសួគ៌) ហើយគេតស៊ូប្រឹងប្រែងធ្វើវាសម្រាប់វា(ថ្ងៃបរលោក)ដោយ

وَهُوَ مُؤۡمِنٞ فَأُوْلَٰٓئِكَ كَانَ سَعۡيُهُم مَّشۡكُورٗا ١٩

គេជាអ្នកមានជំនឿ គឺអ្នកទាំងនោះហើយដែលការខំប្រឹងប្រែងរបស់ពួកគេត្រូវទទួលបានការថ្លែងអំណរគុណ(ពីអល់ឡោះ)។

كُلّٗا نُّمِدُّ هَٰٓؤُلَآءِ وَهَٰٓؤُلَآءِ مِنۡ عَطَآءِ رَبِّكَۚ وَمَا كَانَ عَطَآءُ رَبِّكَ مَحۡظُورًا ٢٠

២០-យើងនឹងបន្ថែមឱ្យក្រុមនីមួយៗនៃពួកគេនូវលាភសក្ការៈពីម្ចាស់របស់អ្នក។ ហើយលាភសក្ការៈនៃម្ចាស់របស់អ្នកគឺគ្មានអ្នកណាអាចហាមឃាត់បានឡើយ។

ٱنظُرۡ كَيۡفَ فَضَّلۡنَا بَعۡضَهُمۡ عَلَىٰ بَعۡضٖۚ وَلَلۡأٓخِرَةُ أَكۡبَرُ دَرَجَٰتٖ وَأَكۡبَرُ تَفۡضِيلٗا ٢١

២១-ចូរអ្នក(មូហាំម៉ាត់)មើលចុះ! តើយើងបានលើកតម្កើងពួកគេឱ្យប្រសើរជាងគ្នាយ៉ាងដូចម្ដេច(នៅក្នុងលោកិយនេះ)? ហើយនៅថ្ងៃបរលោកវិញ ពួកគេទទួលបានឋានៈ និងភាពថ្កុំថ្កើងធំធេងជាងនេះទៅទៀត។

لَّا تَجۡعَلۡ مَعَ ٱللَّهِ إِلَٰهًا ءَاخَرَ فَتَقۡعُدَ مَذۡمُومٗا مَّخۡذُولٗا ٢٢

២២-(ឱមនុស្សលោក!)ចូរកុំបង្កើតម្ចាស់ផ្សេងមកគោរពសក្ការៈរួមជាមួយអល់ឡោះ ដែលជាហេតុនាំឱ្យអ្នកទទួលរងនូវការស្ដីបន្ទោសនិងត្រូវគេបោះបង់ចោល(ក្នុងភ្លើងនរក)ឱ្យសោះ។

۞ وَقَضَىٰ رَبُّكَ أَلَّا تَعۡبُدُوٓاْ إِلَّآ إِيَّاهُ وَبِٱلۡوَٰلِدَيۡنِ إِحۡسَٰنًاۚ إِمَّا يَبۡلُغَنَّ عِندَكَ ٱلۡكِبَرَ أَحَدُهُمَآ أَوۡ كِلَاهُمَا فَلَا تَقُل لَّهُمَآ أُفّٖ وَلَا تَنۡهَرۡهُمَا وَقُل لَّهُمَا قَوۡلٗا كَرِيمٗا ٢٣

២៣-ហើយម្ចាស់របស់អ្នកបានបញ្ជាថាៈ ពួកអ្នកមិនត្រូវគោរពសក្ការៈក្រៅពីទ្រង់ឡើយ។ ហើយត្រូវតែធ្វើល្អទៅចំពោះឪពុកម្ដាយ។ ប្រសិនបើម្នាក់នៃគាត់ទាំងពីរ ឬគាត់ទាំងពីរមានភាពចាស់ជរារស់នៅជាមួយអ្នក ចូរអ្នកកុំនិយាយទៅកាន់គាត់ទាំងពីរនូវពាក្យសំដីមិនសមរម្យ ឬគំហកដាក់គាត់ទាំងពីរឱ្យសោះ។ តែអ្នកត្រូវនិយាយទៅកាន់គាត់ទាំងពីរនូវពាក្យសំដីណាដែលទន់ភ្លន់បំផុត។

وَٱخۡفِضۡ لَهُمَا جَنَاحَ ٱلذُّلِّ مِنَ ٱلرَّحۡمَةِ وَقُل رَّبِّ ٱرۡحَمۡهُمَا كَمَا رَبَّيَانِي صَغِيرٗا ٢٤

២៤-ហើយចូរអ្នកបន្ទាបខ្លួនចំពោះគាត់ទាំងពីរដោយក្ដីអាណិតស្រឡាញ់។ ហើយចូរអ្នកបួងសួងសុំថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាអាណិតស្រឡាញ់គាត់ទាំងពីរដូចដែលគាត់ទាំងពីរបានចិញ្ចឹមបីបាច់ថែរក្សាខ្ញុំកាលពីនៅតូចផង។

رَّبُّكُمۡ أَعۡلَمُ بِمَا فِي نُفُوسِكُمۡۚ إِن تَكُونُواْ صَٰلِحِينَ فَإِنَّهُۥ كَانَ لِلۡأَوَّٰبِينَ غَفُورٗا ٢٥

២៥-ម្ចាស់របស់ពួកអ្នកដឹងបំផុតនូវអ្វីដែលមាននៅក្នុងខ្លួនរបស់ពួកអ្នក។ ប្រសិនបើពួកអ្នកជាអ្នកល្អត្រឹមត្រូវនោះ គឺពិតប្រាកដណាស់ទ្រង់មហាអភ័យទោសចំពោះបណ្ដាអ្នកដែលសារភាពកំហុស។

២៦-ហើយចូរអ្នកផ្តល់ឱ្យញាតិសន្តាន និងជនក្រីក្រ ហើយនិងអ្នកដំណើរដាច់ស្បៀងនូវសិទ្ធិរបស់គេ។ ហើយចូរអ្នកកុំខ្ជះខ្ជាយដោយការចាយវាយខ្ជះខ្ជាយឱ្យសោះ។

وَءَاتِ ذَا ٱلْقُرْبَىٰ حَقَّهُۥ وَٱلْمِسْكِينَ وَٱبْنَ
ٱلسَّبِيلِ وَلَا تُبَذِّرْ تَبْذِيرًا ﴿٢٦﴾

២៧-ពិតប្រាកដណាស់ ពួកដែលខ្ជះខ្ជាយគឺជាបងប្អូននឹងស្ហៃតន ហើយស្ហៃតនគឺជាអ្នកដែលប្រឆាំងនឹងម្ចាស់របស់វា។

إِنَّ ٱلْمُبَذِّرِينَ كَانُوٓا۟ إِخْوَٰنَ ٱلشَّيَٰطِينِ ۖ وَكَانَ
ٱلشَّيْطَٰنُ لِرَبِّهِۦ كَفُورًا ﴿٢٧﴾

២៨-ហើយប្រសិនបើអ្នក(មូហាំម៉ាត់)បែរចេញពីពួកគេ (ញាតិសន្តាន ជនក្រីក្រ និងអ្នកដំណើរដាច់ស្បៀងដោយអ្នកគ្មានអ្វីឱ្យពួកគេ) ដើម្បីស្វែងរកលាភសក្ការៈពីម្ចាស់របស់អ្នកដែលអ្នកនៅសង្ឃឹមវានោះ ចូរអ្នកពោលទៅកាន់ពួកគេនូវពាក្យសំដីណាដែលទន់ភ្លន់បំផុត។

وَإِمَّا تُعْرِضَنَّ عَنْهُمُ ٱبْتِغَآءَ رَحْمَةٍ مِّن رَّبِّكَ
تَرْجُوهَا فَقُل لَّهُمْ قَوْلًا مَّيْسُورًا ﴿٢٨﴾

២៩-ហើយចូរអ្នកកុំធ្វើឱ្យដៃរបស់អ្នកក្តាប់ជាប់ទៅនឹងករបស់អ្នក(កំណាញ់លើការចាយវាយក្នុងមាគ៌ាអល់ឡោះ)ឱ្យសោះ។ តែអ្នកក៏មិនត្រូវលាឱ្យអស់ពីអ្វីដែលនៅនឹងដៃរបស់អ្នកដែរ ជាហេតុនាំឱ្យអ្នកត្រូវទទួលរងនូវការស្តីបន្ទោស និងខាតបង់។

وَلَا تَجْعَلْ يَدَكَ مَغْلُولَةً إِلَىٰ عُنُقِكَ وَلَا
تَبْسُطْهَا كُلَّ ٱلْبَسْطِ فَتَقْعُدَ مَلُومًا
مَّحْسُورًا ﴿٢٩﴾

៣០-ពិតប្រាកដណាស់ ម្ចាស់របស់អ្នកបើកទូលាយ និងដាក់កំណត់នូវលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនា។ ពិតប្រាកដណាស់ទ្រង់ជាអ្នកដឹង ជាអ្នកឃើញបំផុតចំពោះខ្ញុំរបស់ទ្រង់។

إِنَّ رَبَّكَ يَبْسُطُ ٱلرِّزْقَ لِمَن يَشَآءُ وَيَقْدِرُ ۚ
إِنَّهُۥ كَانَ بِعِبَادِهِۦ خَبِيرًۢا بَصِيرًا ﴿٣٠﴾

៣១-ហើយចូរពួកអ្នកកុំសម្លាប់កូនចៅរបស់ពួកអ្នក ព្រោះតែខ្លាចភាពក្រីក្រឱ្យសោះ។ យើងទេដែលផ្តល់លាភសក្ការៈឱ្យពួកគេ និងពួកអ្នក។ ពិតប្រាកដណាស់ ការសម្លាប់ពួកគេគឺជាកំហុសមួយដ៏ធំ។

وَلَا تَقْتُلُوٓا۟ أَوْلَٰدَكُمْ خَشْيَةَ إِمْلَٰقٍ ۖ نَّحْنُ
نَرْزُقُهُمْ وَإِيَّاكُمْ ۚ إِنَّ قَتْلَهُمْ كَانَ خِطْـًٔا
كَبِيرًا ﴿٣١﴾

៣២-ហើយចូរពួកអ្នកកុំទៅក្បែរប្រការហ្ស៊ីណាឱ្យសោះ។ ពិតប្រាកដណាស់ វាជាអំពើអសីលធម៌និងជាមាគ៌ាមួយដ៏អាក្រក់បំផុត។

وَلَا تَقْرَبُوا۟ ٱلزِّنَىٰٓ ۖ إِنَّهُۥ كَانَ فَٰحِشَةً وَسَآءَ
سَبِيلًا ﴿٣٢﴾

៣៣-ហើយចូរពួកអ្នកកុំសម្លាប់ជីវិតនរណាម្នាក់ដែលអល់ឡោះបានហាមឃាត់ឱ្យសោះ លើកលែងតែមានមូលហេតុត្រឹមត្រូវប៉ុណ្ណោះ។ ហើយអ្នកណាដែលត្រូវបានគេសម្លាប់ដោយអយុត្តិធម៌ គឺពិតណាស់យើងបានប្រគល់សិទ្ធិ(សងសឹក)ឱ្យអ្នកគាំពាររបស់

وَلَا تَقْتُلُوا۟ ٱلنَّفْسَ ٱلَّتِى حَرَّمَ ٱللَّهُ إِلَّا بِٱلْحَقِّ ۗ
وَمَن قُتِلَ مَظْلُومًا فَقَدْ جَعَلْنَا لِوَلِيِّهِۦ
سُلْطَٰنًا فَلَا يُسْرِف فِّى ٱلْقَتْلِ ۖ إِنَّهُۥ كَانَ

مَنصُورًا ﴿٣٣﴾

គេ។ ហេតុនេះ ចូរកុំឱ្យគេធ្វើហួសព្រំដែនកំណត់(របស់អល់ឡោះ) នៅក្នុងការសម្លាប់វិញឱ្យសោះ។ ពិតប្រាកដណាស់ គេ(អ្នកគាំពារ) គឺត្រូវបានគេជួយការពារ(ដោយច្បាប់អ៊ីស្លាម)។

وَلَا تَقۡرَبُواْ مَالَ ٱلۡيَتِيمِ إِلَّا بِٱلَّتِي هِيَ أَحۡسَنُ حَتَّىٰ يَبۡلُغَ أَشُدَّهُۥۚ وَأَوۡفُواْ بِٱلۡعَهۡدِۖ إِنَّ ٱلۡعَهۡدَ كَانَ مَسۡـُٔولٗا ﴿٣٤﴾

៣៤-ហើយចូរពួកអ្នកកុំទៅក្បែរ(ចាយវាយ) ទ្រព្យសម្បត្តិរបស់ក្មេងកំព្រាឱ្យសោះ លើកលែងតែលើប្រការណាដែលល្អ(ផ្តល់ប្រយោជន៍ដល់គេ) រហូតទាល់តែគេធំពេញវ័យ។ ហើយពួកអ្នកត្រូវតែគោរពកិច្ចសន្យា។ ពិតប្រាកដណាស់ កិច្ចសន្យានោះនឹងត្រូវបានគេសួរ។

وَأَوۡفُواْ ٱلۡكَيۡلَ إِذَا كِلۡتُمۡ وَزِنُواْ بِٱلۡقِسۡطَاسِ ٱلۡمُسۡتَقِيمِۚ ذَٰلِكَ خَيۡرٞ وَأَحۡسَنُ تَأۡوِيلٗا ﴿٣٥﴾

៣៥-ហើយចូរពួកអ្នកបំពេញរង្វាស់រង្វាល់នៅពេលណាដែលពួកអ្នកបានវាស់ឬវាល់នោះ ហើយចូរពួកអ្នកថ្លឹងនឹងជញ្ជីងដែលត្រឹមត្រូវ។ នោះគឺជាការល្អ និងប្រសើរបំផុតនៅថ្ងៃបរលោក។

وَلَا تَقۡفُ مَا لَيۡسَ لَكَ بِهِۦ عِلۡمٌۚ إِنَّ ٱلسَّمۡعَ وَٱلۡبَصَرَ وَٱلۡفُؤَادَ كُلُّ أُوْلَٰٓئِكَ كَانَ عَنۡهُ مَسۡـُٔولٗا ﴿٣٦﴾

៣៦-(ឱមនុស្សលោក) ចូរកុំតាមនូវអ្វីដែលអ្នកមិនបានដឹងអំពីវា។ ពិតប្រាកដណាស់ ត្រចៀក និងភ្នែក ហើយនិងចិត្តទាំងអស់ នោះនឹងត្រូវបានគេសួរអំពីវា ។

وَلَا تَمۡشِ فِي ٱلۡأَرۡضِ مَرَحًاۖ إِنَّكَ لَن تَخۡرِقَ ٱلۡأَرۡضَ وَلَن تَبۡلُغَ ٱلۡجِبَالَ طُولٗا ﴿٣٧﴾

៣៧-ហើយចូរអ្នកកុំដើរនៅលើផែនដីដោយភាពក្រអឺតក្រទមឱ្យសោះ។ ពិតប្រាកដណាស់ អ្នកមិនអាចពុះជ្រែកផែនដីបានឡើយ។ ហើយអ្នកក៏មិនអាចឈោងខ្ពស់ដូចភ្នំបានដែរ។

كُلُّ ذَٰلِكَ كَانَ سَيِّئُهُۥ عِندَ رَبِّكَ مَكۡرُوهٗا ﴿٣٨﴾

៣៨-រាល់ប្រការទាំងនោះ សុទ្ធតែជាប្រការអាក្រក់ដែលត្រូវស្អប់ខ្ពើមពីម្ចាស់របស់អ្នក។

ذَٰلِكَ مِمَّآ أَوۡحَىٰٓ إِلَيۡكَ رَبُّكَ مِنَ ٱلۡحِكۡمَةِۗ وَلَا تَجۡعَلۡ مَعَ ٱللَّهِ إِلَٰهًا ءَاخَرَ فَتُلۡقَىٰ فِي جَهَنَّمَ مَلُومٗا مَّدۡحُورًا ﴿٣٩﴾

៣៩-នេះគឺជាអ្វីដែលម្ចាស់របស់អ្នកបានផ្តល់វ៉ាហ៊ីឱ្យអ្នកអំពីភាពឈ្លាសវៃ។ ហើយចូរអ្នកកុំបង្កើតម្ចាស់ផ្សេងមកគោរពសក្ការៈរួមជាមួយអល់ឡោះឱ្យសោះ ដែលជាហេតុនាំឱ្យអ្នកត្រូវគេបោះចូលទៅក្នុងនរកជើហាន់ណាំ ដោយការស្តីបន្ទោសនិងឃ្លាតឆ្ងាយពីការសន្តោសប្រណីរបស់អល់ឡោះ។

أَفَأَصۡفَىٰكُمۡ رَبُّكُم بِٱلۡبَنِينَ وَٱتَّخَذَ مِنَ ٱلۡمَلَٰٓئِكَةِ إِنَٰثًاۚ إِنَّكُمۡ لَتَقُولُونَ قَوۡلًا

៤០-(ឱពួកមូស្ហរីគីនម៉ាក្កះ) តើសមរម្យដែរឬទេដែលថា ម្ចាស់របស់ពួកអ្នកបានជ្រើសរើសកូនប្រុសសម្រាប់ពួកអ្នក ហើយយក

عَظِيمًا ﴿٤٠﴾

ម៉ាឡាអ៊ីកាត់ធ្វើជាកូនស្រីរបស់ទ្រង់នោះ? ពិតប្រាកដណាស់ ពួកអ្នកពិតជានិយាយនូវពាក្យសំដីដែលអាក្រក់បំផុត ។

وَلَقَدْ صَرَّفْنَا فِي هَٰذَا ٱلْقُرْءَانِ لِيَذَّكَّرُواْ وَمَا يَزِيدُهُمْ إِلَّا نُفُورًا ﴿٤١﴾

៤១-ហើយជាការពិត យើងបានបញ្ជាក់នៅក្នុងគម្ពីរគួរអាននេះ ដើម្បីឱ្យពួកគេត្រិះរិះពិចារណា ។ ហើយទ្រង់មិនបន្ថែមអ្វីដល់ពួកគេក្រៅពីភាពឃ្លាតឆ្ងាយពីការពិតនោះឡើយ ។

قُل لَّوْ كَانَ مَعَهُۥٓ ءَالِهَةٌ كَمَا يَقُولُونَ إِذًا لَّٱبْتَغَوْاْ إِلَىٰ ذِي ٱلْعَرْشِ سَبِيلًا ﴿٤٢﴾

៤២-ចូរអ្នក(មូហាំម៉ាត់)ពោល(ទៅកាន់ពួកមូស្ហរីគីន)ថា: ប្រសិនបើមានម្ចាស់ផ្សេងៗរួមជាមួយទ្រង់ ដូចដែលពួកគេនិយាយមែននោះ ពេលនោះពួកគេ(ម្ចាស់ផ្សេងៗ) ពិតជាស្វែងរកមាគ៌ាទៅកាន់ម្ចាស់នៃអារ៉ស្ហជាមិនខានឡើយ ។

سُبْحَٰنَهُۥ وَتَعَٰلَىٰ عَمَّا يَقُولُونَ عُلُوًّا كَبِيرًا ﴿٤٣﴾

៤៣-ទ្រង់មហាបរិសុទ្ធ និងខ្ពង់ខ្ពស់បំផុតអំពីអ្វីដែលពួកគេ(ពួកមូស្ហរីគីន)និយាយទៅទៀត ។

تُسَبِّحُ لَهُ ٱلسَّمَٰوَٰتُ ٱلسَّبْعُ وَٱلْأَرْضُ وَمَن فِيهِنَّ ۚ وَإِن مِّن شَيْءٍ إِلَّا يُسَبِّحُ بِحَمْدِهِۦ وَلَٰكِن لَّا تَفْقَهُونَ تَسْبِيحَهُمْ ۗ إِنَّهُۥ كَانَ حَلِيمًا غَفُورًا ﴿٤٤﴾

៤៤-មេឃទាំងប្រាំពីរជាន់ និងផែនដី ហើយនិងអ្វីៗដែលមាននៅក្នុងនោះ លើកតម្កើងសរសើរចំពោះទ្រង់ ។ ហើយគ្មានអ្វីមួយដែលមិនលើកតម្កើងដោយសរសើរទៅចំពោះទ្រង់នោះឡើយ ។ ក៏ប៉ុន្តែពួកអ្នកមិនយល់ពីការលើកតម្កើងរបស់ពួកវាឡើយ ។ ពិតប្រាកដណាស់ ទ្រង់មហាមេត្តាករុណា មហាអភ័យទោស ។

وَإِذَا قَرَأْتَ ٱلْقُرْءَانَ جَعَلْنَا بَيْنَكَ وَبَيْنَ ٱلَّذِينَ لَا يُؤْمِنُونَ بِٱلْءَاخِرَةِ حِجَابًا مَّسْتُورًا ﴿٤٥﴾

៤៥-ហើយនៅពេលដែលអ្នក(មូហាំម៉ាត់)បានសូត្រគម្ពីរគួរអាននោះ គឺយើងបានដាក់រនាំងបាំងភ្នែករវាងអ្នក និងពួកដែលគ្មានជំនឿនឹងថ្ងៃបរលោក ។

وَجَعَلْنَا عَلَىٰ قُلُوبِهِمْ أَكِنَّةً أَن يَفْقَهُوهُ وَفِيٓ ءَاذَانِهِمْ وَقْرًا ۚ وَإِذَا ذَكَرْتَ رَبَّكَ فِي ٱلْقُرْءَانِ وَحْدَهُۥ وَلَّوْاْ عَلَىٰٓ أَدْبَٰرِهِمْ نُفُورًا ﴿٤٦﴾

៤៦-ហើយយើងបានដាក់គំរបគ្របលើចិត្តរបស់ពួកគេ ដើម្បីកុំឱ្យពួកគេយល់អំពីវា(គម្ពីរគួរអាន)និងធ្វើឱ្យត្រចៀករបស់ពួកគេថ្លង់ ។ ហើយនៅពេលដែលអ្នកបានរំលឹកអំពីម្ចាស់របស់អ្នកតែមួយគត់នៅក្នុងគម្ពីរគួរអាននោះ ពួកគេបានបែរខ្នងរបស់ពួកគេដោយគេចវេះទៅវិញ ។

نَّحْنُ أَعْلَمُ بِمَا يَسْتَمِعُونَ بِهِۦٓ إِذْ يَسْتَمِعُونَ إِلَيْكَ وَإِذْ هُمْ نَجْوَىٰٓ إِذْ يَقُولُ ٱلظَّٰلِمُونَ إِن

៤៧-យើងដឹងបំផុតនូវអ្វីដែលពួកគេកំពុងតែស្តាប់វានៅពេលដែលពួកគេបានស្តាប់អ្នក(សូត្រ)នោះ ហើយនិងនៅពេលដែលពួកគេខ្សឹបខ្សៀវគ្នា ពេលនោះពួកបំពានបាននិយាយថា: ពួកអ្នកមិន

تَتَّبِعُونَ إِلَّا رَجُلًا مَّسۡحُورًا ٤٧

តាមអ្នកណាក្រៅពីបុរសដែលត្រូវមន្តអាគមនោះឡើយ។

ٱنظُرۡ كَيۡفَ ضَرَبُواْ لَكَ ٱلۡأَمۡثَالَ فَضَلُّواْ فَلَا
يَسۡتَطِيعُونَ سَبِيلًا ٤٨

៤៨-ចូរអ្នកគិតមើល តើពួកគេបានប្រៀបប្រដូចអ្នកយ៉ាងដូចម្ដេចខ្លះ? ដូច្នេះហើយពួកគេបានវង្វេង ហើយពួកគេមិនអាចស្វែងរកមាគ៌ាដ៏ត្រឹមត្រូវបានឡើយ។

وَقَالُوٓاْ أَءِذَا كُنَّا عِظَٰمًا وَرُفَٰتًا أَءِنَّا
لَمَبۡعُوثُونَ خَلۡقًا جَدِيدًا ٤٩

៤៩-ហើយពួកគេនិយាយថា: នៅពេលដែលពួកយើងបានក្លាយជាឆ្អឹង និងរលួយទៅជាធូលីហើយនោះ តើពួកយើងពិតជានឹងត្រូវគេធ្វើឱ្យរស់សាជាថ្មីឬ?

۞ قُلۡ كُونُواْ حِجَارَةً أَوۡ حَدِيدًا ٥٠

៥០-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកក្លាយទៅជាថ្មឬដែក។

أَوۡ خَلۡقًا مِّمَّا يَكۡبُرُ فِي صُدُورِكُمۡۚ
فَسَيَقُولُونَ مَن يُعِيدُنَاۖ قُلِ ٱلَّذِي فَطَرَكُمۡ
أَوَّلَ مَرَّةٖۚ فَسَيُنۡغِضُونَ إِلَيۡكَ رُءُوسَهُمۡ
وَيَقُولُونَ مَتَىٰ هُوَۖ قُلۡ عَسَىٰٓ أَن يَكُونَ
قَرِيبًا ٥١

៥១-ឬជាវត្ថុអ្វីមួយដែលក្នុងចិត្តរបស់ពួកអ្នកគិតថាវាធំចុះ! ពេលនោះពួកគេនឹងនិយាយថា: តើនរណាជាអ្នកដែលធ្វើឱ្យពួកយើងរស់ឡើងវិញ? ចូរអ្នកពោលថា: គឺអ្នកដែលបានបង្កើតពួកអ្នកតាំងពីដំបូងមក។ ពេលនោះពួកគេនឹងងក់ក្បាលរបស់ពួកគេដាក់អ្នកដោយនិយាយថា: តើវានឹងកើតឡើងនៅពេលណា? ចូរអ្នកពោលថា: សង្ឃឹមថាវានឹងកើតឡើងឆាប់ៗនេះ។

يَوۡمَ يَدۡعُوكُمۡ فَتَسۡتَجِيبُونَ بِحَمۡدِهِۦ
وَتَظُنُّونَ إِن لَّبِثۡتُمۡ إِلَّا قَلِيلًا ٥٢

៥២-នៅថ្ងៃដែលទ្រង់នឹងហៅពួកអ្នក(ចេញពីផ្នូរ) ពេលនោះពួកអ្នកនឹងឆ្លើយតបវិញដោយការសរសើរចំពោះទ្រង់ ហើយពួកអ្នកនឹងគិតថា ពួកអ្នកបាននៅ(ក្នុងលោកិយនេះ)តែមួយរយៈពេលខ្លីប៉ុណ្ណោះ។

وَقُل لِّعِبَادِي يَقُولُواْ ٱلَّتِي هِيَ أَحۡسَنُۚ إِنَّ
ٱلشَّيۡطَٰنَ يَنزَغُ بَيۡنَهُمۡۚ إِنَّ ٱلشَّيۡطَٰنَ كَانَ
لِلۡإِنسَٰنِ عَدُوّٗا مُّبِينٗا ٥٣

៥៣-ហើយចូរអ្នកពោលទៅកាន់ខ្ញុំរបស់យើង ដោយឱ្យពួកគេនិយាយតែពាក្យសំដីដែលល្អប្រសើរ។ ពិតប្រាកដណាស់ ស្ហៃតនគឺជាអ្នកបង្កជម្លោះរវាងពួកគេ។ ពិតប្រាកដណាស់ ស្ហៃតនជាសត្រូវយ៉ាងពិតប្រាកដចំពោះមនុស្សលោក។

رَّبُّكُمۡ أَعۡلَمُ بِكُمۡۖ إِن يَشَأۡ يَرۡحَمۡكُمۡ أَوۡ إِن يَشَأۡ
يُعَذِّبۡكُمۡۚ وَمَآ أَرۡسَلۡنَٰكَ عَلَيۡهِمۡ وَكِيلٗا ٥٤

៥៤-ម្ចាស់របស់ពួកអ្នកដឹងបំផុតចំពោះពួកអ្នក។ ប្រសិនបើទ្រង់មានចេតនា ទ្រង់នឹងសន្ដោសប្រណីដល់ពួកអ្នក ឬប្រសិនបើទ្រង់មានចេតនា ទ្រង់នឹងដាក់ទណ្ឌកម្មពួកអ្នក។ ហើយយើងមិនបញ្ជូនអ្នក(មូហាំម៉ាត់)ធ្វើជាអ្នកគាំពារចំពោះពួកគេឡើយ។

وَرَبُّكَ أَعْلَمُ بِمَن فِى ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۗ
وَلَقَدْ فَضَّلْنَا بَعْضَ ٱلنَّبِيِّـۧنَ عَلَىٰ بَعْضٍ ۖ
وَءَاتَيْنَا دَاوُۥدَ زَبُورًا ﴿٥٥﴾

៥៥-ហើយម្ចាស់របស់អ្នកដឹងបំផុតចំពោះអ្នកដែលមាននៅលើមេឃជាច្រើនជាន់និងផែនដី។ ហើយជាការពិតណាស់យើងបានលើកតម្កើងបណ្តាណាពីឱ្យប្រសើរជាងគ្នា ហើយយើងបានផ្តល់ឱ្យដាវូដនូវគម្ពីរហ្សាពួរ។

قُلِ ٱدْعُوا۟ ٱلَّذِينَ زَعَمْتُم مِّن دُونِهِۦ فَلَا
يَمْلِكُونَ كَشْفَ ٱلضُّرِّ عَنكُمْ
وَلَا تَحْوِيلًا ﴿٥٦﴾

៥៦-ចូរអ្នកពោល(ទៅកាន់ពួកមូស្ហរីគីន)ថា: ចូរពួកអ្នកបួងសួងសុំពីពួកដែលពួកអ្នកបានអះអាងថាជាម្ចាស់ក្រៅពីទ្រង់ គឺពួកគេគ្មានលទ្ធភាពបំបាត់គ្រោះថ្នាក់ចេញពីពួកអ្នក និងមិនអាចផ្លាស់ប្តូរវាពីពួកអ្នកទៅអ្នកផ្សេងបានឡើយ។

أُو۟لَٰٓئِكَ ٱلَّذِينَ يَدْعُونَ يَبْتَغُونَ إِلَىٰ
رَبِّهِمُ ٱلْوَسِيلَةَ أَيُّهُمْ أَقْرَبُ وَيَرْجُونَ رَحْمَتَهُۥ
وَيَخَافُونَ عَذَابَهُۥٓ ۚ إِنَّ عَذَابَ رَبِّكَ كَانَ
مَحْذُورًا ﴿٥٧﴾

៥៧-ពួក(ព្រះនានា)ដែលពួកមូស្ហរីគីននៅបួងសួងសុំនោះ ពួកគេក៏ស្វែងរកមធ្យោបាយទៅកាន់ម្ចាស់របស់ពួកគេដែរ ថាតើពួកគេណាម្នាក់ដែលជិត(នឹងអល់ឡោះ)បំផុតនោះ? ហើយពួកគេនៅសង្ឃឹមនូវការប្រោសប្រណីរបស់ទ្រង់និងពួកគេខ្លាចចំពោះទារុណកម្មរបស់ទ្រង់។ ពិតប្រាកដណាស់ ទារុណកម្មនៃម្ចាស់របស់អ្នកគឺត្រូវគេ(គ្រប់ៗគ្នា)ប្រុងប្រយ័ត្ន។

وَإِن مِّن قَرْيَةٍ إِلَّا نَحْنُ مُهْلِكُوهَا قَبْلَ يَوْمِ
ٱلْقِيَٰمَةِ أَوْ مُعَذِّبُوهَا عَذَابًا شَدِيدًا ۚ كَانَ
ذَٰلِكَ فِى ٱلْكِتَٰبِ مَسْطُورًا ﴿٥٨﴾

៥៨-ហើយគ្មានភូមិស្រុកណាមួយ(ដែលគ្មានជំនឿ ហើយប្រឆាំងនឹងអ្នកនាំសារ) ក្រៅពីយើងបំផ្លាញវាមុនថ្ងៃបរលោក ឬក៏យើងនឹងដាក់ទណ្ឌកម្មវានូវទារុណកម្មយ៉ាងធ្ងន់ធ្ងរនោះឡើយ។ រឿងទាំងនោះត្រូវបានគេសរសេរនៅក្នុងសៀវភៅកំណត់ត្រារួចជាស្រេច(ឡាវហុលម៉ះហ្វ៊ូស)។

وَمَا مَنَعَنَآ أَن نُّرْسِلَ بِٱلْءَايَٰتِ إِلَّآ أَن
كَذَّبَ بِهَا ٱلْأَوَّلُونَ ۚ وَءَاتَيْنَا ثَمُودَ ٱلنَّاقَةَ
مُبْصِرَةً فَظَلَمُوا۟ بِهَا ۚ وَمَا نُرْسِلُ بِٱلْءَايَٰتِ إِلَّا
تَخْوِيفًا ﴿٥٩﴾

៥៩-ហើយគ្មានអ្វីដែលហាមឃាត់យើងមិនឱ្យបញ្ចុះមុជីហ្សាត់ឡើយ តែមនុស្សនៅជំនាន់មុនៗបែរជាបដិសេធនឹងវាទៅវិញ។ ហើយយើងបានផ្តល់ឱ្យសាមូដ(ក្រុមរបស់សឡេះ)នូវសត្វអូដ្ឋញីមួយក្បាលយ៉ាងច្បាស់លាស់ តែពួកគេបានប្រឆាំងនឹងវា។ ហើយយើងមិនបានបញ្ចុះមុជីហ្សាត់ឡើយ លើកលែងតែជាការបន្លាចប៉ុណ្ណោះ។

وَإِذْ قُلْنَا لَكَ إِنَّ رَبَّكَ أَحَاطَ بِٱلنَّاسِ ۚ وَمَا
جَعَلْنَا ٱلرُّءْيَا ٱلَّتِىٓ أَرَيْنَٰكَ إِلَّا فِتْنَةً لِّلنَّاسِ

៦០-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានប្រាប់អ្នក(មូហាំម៉ាត់)ថា: ពិតប្រាកដណាស់ ម្ចាស់របស់អ្នកដឹងជ្រួតជ្រាបអំពីមនុស្សលោក។ ហើយយើងមិនបានបង្កើតនូវចក្ខុវិស័យដែល

وَٱلشَّجَرَةَ ٱلْمَلْعُونَةَ فِى ٱلْقُرْءَانِ ۚ وَنُخَوِّفُهُمْ فَمَا يَزِيدُهُمْ إِلَّا طُغْيَـٰنًا كَبِيرًا ﴿٦٠﴾

យើង បានបង្ហាញអ្នក( នៅយប់អ៊ីសរ៉ក មេរ៉ាជ) និងដើមឈើ ( ហ្សឹកគូម) ដែលត្រូវគេដាក់បណ្តាសា( ដែលបានពណ៌នា) នៅក្នុងគម្ពីរគួរអានឡើយ លើកលែងតែជាការសាកល្បងសម្រាប់មនុស្សលោកប៉ុណ្ណោះ ។ ហើយយើងបានបន្លាចពួកគេ( នូវទារុណកម្ម) ហើយទ្រង់មិនបន្ថែមដល់ពួកគេក្រៅពីការវង្វេងដ៏សែនឆ្ងាយនោះឡើយ ។

وَإِذْ قُلْنَا لِلْمَلَـٰٓئِكَةِ ٱسْجُدُوا۟ لِءَادَمَ فَسَجَدُوٓا۟ إِلَّآ إِبْلِيسَ قَالَ ءَأَسْجُدُ لِمَنْ خَلَقْتَ طِينًا ﴿٦١﴾

៦១-ហើយ( ចូរចងចាំ) នៅពេលដែលយើងបានមានបន្ទូលទៅកាន់ម៉ាឡាអ៊ីកាត់ថា: ចូរពួកអ្នកស៊ូជូតចំពោះអាដាំ ។ ពេលនោះពួកគេបានស៊ូជូត លើកលែងតែអ៊ីព្លីសប៉ុណ្ណោះដែលបាននិយាយថា: តើខ្ញុំត្រូវស៊ូជូតចំពោះអ្នកដែលទ្រង់បានបង្កើតអំពីដីស្អិតឬ?

قَالَ أَرَءَيْتَكَ هَـٰذَا ٱلَّذِى كَرَّمْتَ عَلَىَّ لَئِنْ أَخَّرْتَنِ إِلَىٰ يَوْمِ ٱلْقِيَـٰمَةِ لَأَحْتَنِكَنَّ ذُرِّيَّتَهُۥٓ إِلَّا قَلِيلًا ﴿٦٢﴾

៦២-វា( អ៊ីព្លីស) បាននិយាយថា: សូមទ្រង់ប្រាប់ខ្ញុំមក តើនេះឬដែលអ្នកបានលើកតម្កើងជាងខ្ញុំនោះ? ប្រសិនបើទ្រង់ពន្យារពេលឱ្យខ្ញុំរស់រហូតដល់ថ្ងៃបរលោក ខ្ញុំពិតជានឹងអូសទាញកូនចៅរបស់គេ( ឱ្យដើរតាមផ្លូវវង្វេង) លើកលែងតែបន្តិចបន្តួច( នៃអ្នកដែលមានជំនឿ) ប៉ុណ្ណោះ ។

قَالَ ٱذْهَبْ فَمَن تَبِعَكَ مِنْهُمْ فَإِنَّ جَهَنَّمَ جَزَآؤُكُمْ جَزَآءً مَّوْفُورًا ﴿٦٣﴾

៦៣-ទ្រង់បានមានបន្ទូលថា: ចូរឯងទៅចុះ! អ្នកណាហើយបានដើរតាមឯងក្នុងចំណោមពួកគេ ពិតប្រាកដណាស់ នរកជើហាន់ណាំគឺជាការតបស្នងរបស់ពួកឯង ដែលជាការតបស្នងមួយយ៉ាងពេញលេញ ។

وَٱسْتَفْزِزْ مَنِ ٱسْتَطَعْتَ مِنْهُم بِصَوْتِكَ وَأَجْلِبْ عَلَيْهِم بِخَيْلِكَ وَرَجِلِكَ وَشَارِكْهُمْ فِى ٱلْأَمْوَٰلِ وَٱلْأَوْلَـٰدِ وَعِدْهُمْ ۚ وَمَا يَعِدُهُمُ ٱلشَّيْطَـٰنُ إِلَّا غُرُورًا ﴿٦٤﴾

៦៤-ហើយចូរឯងលួងលោមចំពោះអ្នកណាដែលអ្នកអាចលួងលោមបានក្នុងចំណោមពួកគេដោយសំឡេងរបស់ឯង( ដោយអំពាវនាវឱ្យដើរផ្លូវខុសពីការណែនាំរបស់អល់ឡោះ) ចុះ ។ ហើយចូរអ្នកប្រមូលទ័ពសេះរបស់ឯងនិងទ័ពថ្មើរជើងរបស់ឯងប្រឆាំងនឹងពួកគេ ។ ហើយចូរឯងចូលរួមជាមួយពួកគេនៅក្នុងទ្រព្យសម្បត្តិនិងកូនចៅ( ដូចជារកប្រាក់កាសក្នុងផ្លូវខុសច្បាប់ ចងការ និងការរួមភេទ) ។ ហើយចូរឯងសន្យានឹងពួកគេចុះ ។ ប៉ុន្តែស្ហៃតនមិនបានសន្យាអ្វីនឹងពួកគេក្រៅពីការបោកប្រាស់នោះឡើយ ។

إِنَّ عِبَادِى لَيْسَ لَكَ عَلَيْهِمْ سُلْطَـٰنٌ ۚ

៦៥-ពិតប្រាកដណាស់ ខ្ញុំរបស់យើង( ដែលគោរពប្រតិបត្តិតាម

យើង) គឺឯងមិនអាចគ្រប់គ្រងលើពួកគេបានឡើយ ។ គ្រប់គ្រាន់ហើយម្ចាស់របស់អ្នកជាអ្នកគាំពារ ។

وَكَفَىٰ بِرَبِّكَ وَكِيلًا ﴿٦٥﴾

៦៦-ម្ចាស់របស់ពួកអ្នកជាអ្នកធ្វើឱ្យសំពៅដំណើរការបាននៅលើសមុទ្រសម្រាប់ពួកអ្នក ដើម្បីឱ្យពួកអ្នកស្វែងរកនូវលាភសក្ការៈរបស់ទ្រង់ ។ ពិតប្រាកដណាស់ ទ្រង់មហាអាណិតស្រឡាញ់ចំពោះពួកអ្នក ។

رَّبُّكُمُ ٱلَّذِى يُزْجِى لَكُمُ ٱلْفُلْكَ فِى ٱلْبَحْرِ لِتَبْتَغُوا۟ مِن فَضْلِهِۦٓ ۚ إِنَّهُۥ كَانَ بِكُمْ رَحِيمًا ﴿٦٦﴾

៦៧-ហើយនៅពេលដែលគ្រោះថ្នាក់បានកើតឡើងចំពោះពួកអ្នកនៅលើសមុទ្រ គឺអ្នក(ព្រះនានា)ដែលពួកអ្នកបួងសួងសុំនោះបានបាត់បង់អស់ លើកលែងតែទ្រង់មួយគត់ ។ ក៏ប៉ុន្តែនៅពេលដែលទ្រង់បានសង្គ្រោះពួកអ្នកទៅលើគោកពួកអ្នកបែរជាងាកចេញ(ពីទ្រង់)ទៅវិញ ។ ហើយមនុស្សលោកជាអ្នកដែលប្រឆាំង(រមិលគុណចំពោះនៀកម៉ាត់របស់អល់ឡោះ) ។

وَإِذَا مَسَّكُمُ ٱلضُّرُّ فِى ٱلْبَحْرِ ضَلَّ مَن تَدْعُونَ إِلَّآ إِيَّاهُ ۖ فَلَمَّا نَجَّىٰكُمْ إِلَى ٱلْبَرِّ أَعْرَضْتُمْ ۚ وَكَانَ ٱلْإِنسَٰنُ كَفُورًا ﴿٦٧﴾

៦៨-តើពួកអ្នកគិតថាបានសុខដែរឬទេ ដែលទ្រង់ធ្វើឱ្យដីគោកបាក់ស្រូបយកពួកអ្នក ឬទ្រង់បញ្ចុះភ្លៀងថ្មទៅលើពួកអ្នក បន្ទាប់មកពួកអ្នកគ្មានអ្នកការពារពួកអ្នកនោះ?

أَفَأَمِنتُمْ أَن يَخْسِفَ بِكُمْ جَانِبَ ٱلْبَرِّ أَوْ يُرْسِلَ عَلَيْكُمْ حَاصِبًا ثُمَّ لَا تَجِدُوا۟ لَكُمْ وَكِيلًا ﴿٦٨﴾

៦៩-ឬមួយក៏ពួកអ្នកគិតថាបានសុខឬ នៅពេលដែលទ្រង់បញ្ជូនពួកអ្នកត្រឡប់ទៅក្នុងសមុទ្រម្តងទៀត រួចទ្រង់នឹងបញ្ជូនខ្យល់ព្យុះទៅលើពួកអ្នក ពេលនោះទ្រង់ធ្វើឱ្យពួកអ្នកលិចលង់ដោយសារតែពួកអ្នកបានប្រឆាំង បន្ទាប់មកពួកអ្នកគ្មានអ្នកតាមជួយពួកអ្នកប្រឆាំងនឹងយើងទៀតនោះ?

أَمْ أَمِنتُمْ أَن يُعِيدَكُمْ فِيهِ تَارَةً أُخْرَىٰ فَيُرْسِلَ عَلَيْكُمْ قَاصِفًا مِّنَ ٱلرِّيحِ فَيُغْرِقَكُم بِمَا كَفَرْتُمْ ۙ ثُمَّ لَا تَجِدُوا۟ لَكُمْ عَلَيْنَا بِهِۦ تَبِيعًا ﴿٦٩﴾

៧០-ហើយជាការពិតណាស់ យើងបានលើកតម្កើងកូនចៅអាដាំ ហើយយើងបានផ្តល់ឱ្យពួកគេមានមធ្យោបាយធ្វើដំណើរនៅលើដីគោកនិងសមុទ្រ និងបានផ្តល់ឱ្យពួកគេនូវលាភសក្ការៈល្អៗ ហើយនិងបានលើកតម្កើងពួកគេប្រសើរជាងអ្វីៗដែលយើងបានបង្កើតមក ។

۞ وَلَقَدْ كَرَّمْنَا بَنِىٓ ءَادَمَ وَحَمَلْنَٰهُمْ فِى ٱلْبَرِّ وَٱلْبَحْرِ وَرَزَقْنَٰهُم مِّنَ ٱلطَّيِّبَٰتِ وَفَضَّلْنَٰهُمْ عَلَىٰ كَثِيرٍ مِّمَّنْ خَلَقْنَا تَفْضِيلًا ﴿٧٠﴾

៧១-(ចូរចងចាំ)នៅថ្ងៃដែលយើងហៅមនុស្សលោកគ្រប់គ្នាជាមួយអ្នកដឹកនាំរបស់ពួកគេ ។ អ្នកណាហើយដែលត្រូវបានគេផ្តល់

يَوْمَ نَدْعُوا۟ كُلَّ أُنَاسٍۭ بِإِمَٰمِهِمْ ۖ فَمَنْ أُوتِىَ

كِتَـٰبَهُۥ بِيَمِينِهِۦ فَأُو۟لَـٰٓئِكَ يَقْرَءُونَ
كِتَـٰبَهُمْ وَلَا يُظْلَمُونَ فَتِيلًا ﴿٧١﴾

ឱ្យនូវសៀវភៅកំណត់ហេតុរបស់គេនៅដៃស្តាំរបស់គេ អ្នកទាំងនោះនឹងអានសៀវភៅកំណត់ហេតុរបស់ខ្លួន។ ហើយពួកគេនឹងមិនត្រូវគេបំពានសូម្បីតែបន្តិចឡើយ ។

وَمَن كَانَ فِى هَـٰذِهِۦٓ أَعْمَىٰ فَهُوَ فِى
ٱلْـَٔاخِرَةِ أَعْمَىٰ وَأَضَلُّ سَبِيلًا ﴿٧٢﴾

៧២-អ្នកណាហើយដែលងងឹត[1] នៅក្នុងលោកិយនេះ គឺអ្នកនោះកាន់តែងងឹតថែមទៀតនៅថ្ងៃបរលោក ហើយរឹតតែវង្វេងពីមាគ៌ាដែលត្រឹមត្រូវ ។

وَإِن كَادُوا۟ لَيَفْتِنُونَكَ عَنِ ٱلَّذِىٓ
أَوْحَيْنَآ إِلَيْكَ لِتَفْتَرِىَ عَلَيْنَا غَيْرَهُۥ ۖ وَإِذًا
لَّٱتَّخَذُوكَ خَلِيلًا ﴿٧٣﴾

៧៣-ហើយពិតប្រាកដណាស់ ពួកគេ(ពួកមូស្ហរីគីន)ស្ទើរតែធ្វើឱ្យអ្នកឃ្លាតឆ្ងាយពីអ្វីដែលយើងបានបញ្ចុះឱ្យអ្នក(គម្ពីរគួរអាន) ដើម្បីឱ្យអ្នកប្រឌិតអ្វីផ្សេងមកកុហកលើយើងទៅហើយ ។ តែបើដូច្នោះមែន ពួកគេពិតជាយកអ្នកធ្វើជាមិត្តសម្លាញ់ជាមិនខាន ។

وَلَوْلَآ أَن ثَبَّتْنَـٰكَ لَقَدْ كِدتَّ تَرْكَنُ إِلَيْهِمْ
شَيْـًٔا قَلِيلًا ﴿٧٤﴾

៧៤-ហើយប្រសិនបើយើងមិនបានផ្តល់ភាពរឹងប៉ឹងដល់អ្នកទេនោះ ពិតប្រាកដណាស់ អ្នកស្ទើរតែទោរទន់ទៅរកពួកគេបន្តិចបន្តួចទៅហើយ ។

إِذًا لَّأَذَقْنَـٰكَ ضِعْفَ ٱلْحَيَوٰةِ وَضِعْفَ
ٱلْمَمَاتِ ثُمَّ لَا تَجِدُ لَكَ عَلَيْنَا نَصِيرًا ﴿٧٥﴾

៧៥-បើអ្នកទោរទន់តាមពួកគេមែននោះ យើងនឹងឱ្យអ្នកភ្លក្ស(ទារុណកម្ម)ទ្វេដងនៃការរស់នៅ(ក្នុងលោកិយ) និងទ្វេដងក្រោយពីស្លាប់ បន្ទាប់មកអ្នកគ្មានអ្នកណាជួយអ្នកប្រឆាំងនឹងយើងឡើយ ។

وَإِن كَادُوا۟ لَيَسْتَفِزُّونَكَ مِنَ ٱلْأَرْضِ
لِيُخْرِجُوكَ مِنْهَا ۖ وَإِذًا لَّا يَلْبَثُونَ خِلَـٰفَكَ
إِلَّا قَلِيلًا ﴿٧٦﴾

៧៦-ពិតប្រាកដណាស់ ពួកគេស្ទើរតែបំភិតបំភ័យឱ្យអ្នកចេញពីទឹកដី(ម៉ាក្កះ)ដើម្បីបណ្តេញអ្នកចេញពីទីនោះ ។ តែបើដូច្នោះមែន ពួកគេនឹងមិនអាចនៅ(ទីកន្លែងនោះ)ក្រោយពីអ្នកបានឡើយ លើកលែងតែមួយរយៈពេលខ្លីប៉ុណ្ណោះ ។

سُنَّةَ مَن قَدْ أَرْسَلْنَا قَبْلَكَ مِن رُّسُلِنَا ۖ وَلَا
تَجِدُ لِسُنَّتِنَا تَحْوِيلًا ﴿٧٧﴾

៧៧-(នេះហើយ)ជាច្បាប់របស់យើងចំពោះអ្នកដែលយើងបានបញ្ជូនមកក្នុងចំណោមអ្នកនាំសាររបស់យើងមុនអ្នក(មូហាំម៉ាត់) ហើយអ្នកមិនអាចកែប្រែច្បាប់របស់យើងបានឡើយ ។

أَقِمِ ٱلصَّلَوٰةَ لِدُلُوكِ ٱلشَّمْسِ إِلَىٰ غَسَقِ ٱلَّيْلِ

៧៨-ចូរអ្នកប្រតិបត្តិសឡាតចាប់ពីថ្ងៃជ្រេ រហូតដល់យប់(ហ្ស៊ូហួរ អាសើរ ម៉ាហ្គរិប និងអ៊ីស្ហា) និងសឡាតស៊ូពូស[2] ។ ពិត

១-ងងឹតក្នុងចិត្តមិនបានមើលឃើញភស្តុតាងៗរបស់អល់ឡោះ និងគ្មានជំនឿលើទ្រង់ ។

២-សឡាតស៊ូពូស : ការថ្វាយបង្គំពេលទៀបភ្លឺ ហើយការសឡាតនេះគឺតម្រូវឱ្យសូត្រគួរអានឱ្យបានវែងបន្តិច ។

وَقُرۡءَانَ ٱلۡفَجۡرِۖ إِنَّ قُرۡءَانَ ٱلۡفَجۡرِ كَانَ
مَشۡهُودٗا ﴿٧٨﴾

ប្រាកដណាស់ ការសឡាតស៊ូពូសគឺត្រូវបានគេ(ម៉ាឡាអ៊ិកាត់)ធ្វើជាសាក្សី ។

وَمِنَ ٱلَّيۡلِ فَتَهَجَّدۡ بِهِۦ نَافِلَةٗ لَّكَ عَسَىٰٓ أَن
يَبۡعَثَكَ رَبُّكَ مَقَامٗا مَّحۡمُودٗا ﴿٧٩﴾

៧៩-ហើយនៅក្នុងផ្នែកមួយនៃពេលយប់ ចូរអ្នកប្រតិបត្តិសឡាតតះជុតនឹងវា(សូត្រគម្ពីរគួរអានឱ្យបានវែង) ជាការបន្ថែមសម្រាប់អ្នក សង្ឃឹមថាម្ចាស់របស់អ្នកនឹងតែងតាំងអ្នកនៅកន្លែងមួយដែលត្រូវបានគេកោតសរសើរ ។

وَقُل رَّبِّ أَدۡخِلۡنِي مُدۡخَلَ صِدۡقٖ وَأَخۡرِجۡنِي
مُخۡرَجَ صِدۡقٖ وَٱجۡعَل لِّي مِن لَّدُنكَ سُلۡطَٰنٗا
نَّصِيرٗا ﴿٨٠﴾

៨០-ហើយចូរអ្នកបួងសួងសុំថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាបញ្ចូលខ្ញុំទៅ(ទីក្រុងម៉ាឌីណះ)ឱ្យបានល្អ និងបញ្ចេញខ្ញុំ(ពីទីក្រុងម៉ាក្កះ)ឱ្យបានល្អ ហើយសូមទ្រង់មេត្តាប្រទានឱ្យខ្ញុំនូវអំណាច និងជំនួយពីទ្រង់ផង ។

وَقُلۡ جَآءَ ٱلۡحَقُّ وَزَهَقَ ٱلۡبَٰطِلُۚ إِنَّ ٱلۡبَٰطِلَ
كَانَ زَهُوقٗا ﴿٨١﴾

៨១-ហើយចូរអ្នកពោលថាៈ ភាពពិតបានមកដល់ ហើយការប្រឌិតបានរលាយសាបសូន្យ ។ ពិតប្រាកដណាស់ ការប្រឌិតគឺត្រូវបានរលាយសាបសូន្យ ។

وَنُنَزِّلُ مِنَ ٱلۡقُرۡءَانِ مَا هُوَ شِفَآءٞ وَرَحۡمَةٞ
لِّلۡمُؤۡمِنِينَ وَلَا يَزِيدُ ٱلظَّٰلِمِينَ إِلَّا
خَسَارٗا ﴿٨٢﴾

៨២-ហើយយើងបញ្ចុះ(ឱ្យអ្នក)អំពីគម្ពីរគួរអានដែលវាជាការព្យាបាល ហើយជាការប្រោសប្រណីសម្រាប់បណ្ដាអ្នកដែលមានជំនឿ ហើយទ្រង់មិនបន្ថែមឱ្យពួកដែលបំពានក្រៅពីការខាតបង់នោះឡើយ ។

وَإِذَآ أَنۡعَمۡنَا عَلَى ٱلۡإِنسَٰنِ أَعۡرَضَ وَنَـَٔا
بِجَانِبِهِۦۖ وَإِذَا مَسَّهُ ٱلشَّرُّ كَانَ يَـُٔوسٗا ﴿٨٣﴾

៨៣-ហើយនៅពេលដែលយើងបានប្រទាននៀកម៉ាត់ដល់មនុស្សលោក គេបានបែរចេញដោយក្រអឺតក្រទម(ពីមាគ៌ាដែលត្រឹមត្រូវ) ។ ហើយនៅពេលដែលគ្រោះអាក្រក់បានធ្លាក់ត្រូវលើគេ គឺគេអស់សង្ឃឹមជាទីបំផុត ។

قُلۡ كُلّٞ يَعۡمَلُ عَلَىٰ شَاكِلَتِهِۦ فَرَبُّكُمۡ أَعۡلَمُ
بِمَنۡ هُوَ أَهۡدَىٰ سَبِيلٗا ﴿٨٤﴾

៨៤-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ មនុស្សគ្រប់រូបតែងតែប្រព្រឹត្តទៅតាមលក្ខណៈ(មាគ៌ា សាសនា ចំណង់)របស់គេ ហេតុនេះម្ចាស់របស់ពួកអ្នកដឹងបំផុតចំពោះអ្នកណាដែលប្រតិបត្តិតាមមាគ៌ាដែលត្រឹមត្រូវជាងគេ ។

وَيَسۡـَٔلُونَكَ عَنِ ٱلرُّوحِۖ قُلِ ٱلرُّوحُ مِنۡ أَمۡرِ
رَبِّي وَمَآ أُوتِيتُم مِّنَ ٱلۡعِلۡمِ إِلَّا قَلِيلٗا ﴿٨٥﴾

៨៥-ហើយពួកគេ(ពួកប្រឆាំង)សួរអ្នកអំពីវិញ្ញាណ ។ ចូរអ្នកឆ្លើយថាៈ វិញ្ញាណនោះគឺជាកិច្ចការមួយនៃម្ចាស់របស់ខ្ញុំ ហើយពួក

អ្នកមិនត្រូវបានគេផ្តល់ឱ្យនូវចំណេះដឹង(អំពីវិញ្ញាណនោះ)ឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ។

៨៦-ហើយប្រសិនបើយើងមានចេតនា យើងពិតជានឹងបំបាត់ចោលនូវអ្វីដែលយើងបានផ្តល់ឱ្យអ្នក(គម្ពីរគួរអាន) បន្ទាប់មកអ្នកគ្មានអ្នកគាំពារណាអាចប្រឆាំងនឹងយើងក្នុងរឿងនោះបានឡើយ។

وَلَئِن شِئۡنَا لَنَذۡهَبَنَّ بِٱلَّذِيٓ أَوۡحَيۡنَآ إِلَيۡكَ ثُمَّ
لَا تَجِدُ لَكَ بِهِۦ عَلَيۡنَا وَكِيلًا ﴿٨٦﴾

៨៧-លើកលែងតែមានការប្រោសប្រណីពីម្ចាស់របស់អ្នក។ ពិតប្រាកដណាស់ការប្រោសប្រទានរបស់ទ្រង់គឺធំធេងបំផុតចំពោះអ្នក។

إِلَّا رَحۡمَةٗ مِّن رَّبِّكَۚ إِنَّ فَضۡلَهُۥ كَانَ
عَلَيۡكَ كَبِيرٗا ﴿٨٧﴾

៨៨-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ប្រសិនបើមនុស្សលោក និងជិនបានរួមគ្នាដើម្បីចងក្រងឱ្យដូចនឹងគម្ពីរគួរអាននេះ គឺពួកគេមិនអាចចងក្រងឱ្យដូចនឹងវាបានឡើយ ទោះបីជាពួកគេបានជួយគ្នាទៅវិញទៅមកក៏ដោយ។

قُل لَّئِنِ ٱجۡتَمَعَتِ ٱلۡإِنسُ وَٱلۡجِنُّ عَلَىٰٓ أَن
يَأۡتُواْ بِمِثۡلِ هَٰذَا ٱلۡقُرۡءَانِ لَا يَأۡتُونَ بِمِثۡلِهِۦ
وَلَوۡ كَانَ بَعۡضُهُمۡ لِبَعۡضٖ ظَهِيرٗا ﴿٨٨﴾

៨៩-ហើយជាការពិត យើងបានបញ្ជាក់ចំពោះមនុស្សលោកនៅក្នុងគម្ពីរគួរអាននេះនូវគ្រប់ឧទាហរណ៍ ក៏ប៉ុន្តែមនុស្សលោកភាគច្រើនមិនទទួលយកការពិតក្រៅពីការប្រឆាំងឡើយ។

وَلَقَدۡ صَرَّفۡنَا لِلنَّاسِ فِي هَٰذَا ٱلۡقُرۡءَانِ مِن
كُلِّ مَثَلٖ فَأَبَىٰٓ أَكۡثَرُ ٱلنَّاسِ إِلَّا كُفُورٗا ﴿٨٩﴾

៩០-ពួកគេបាននិយាយថា: ពួកយើងនឹងមិនជឿអ្នក(មូហាំម៉ាត់)ជាដាច់ខាត លុះត្រាតែអ្នកធ្វើឱ្យប្រភពទឹកផុសចេញពីដី(នៅម៉ាក្កះ)សម្រាប់ពួកយើងសិន។

وَقَالُواْ لَن نُّؤۡمِنَ لَكَ حَتَّىٰ تَفۡجُرَ لَنَا مِنَ
ٱلۡأَرۡضِ يَنۢبُوعًا ﴿٩٠﴾

៩១-ឬអ្នកមានចំការល្មើ និងទំពាំងបាយជូរ ហើយអ្នកអាចធ្វើឱ្យមានទន្លេហូរតាមចន្លោះៗវាជាច្រើន។

أَوۡ تَكُونَ لَكَ جَنَّةٞ مِّن نَّخِيلٖ وَعِنَبٖ فَتُفَجِّرَ
ٱلۡأَنۡهَٰرَ خِلَٰلَهَا تَفۡجِيرًا ﴿٩١﴾

៩២-ឬអ្នកអាចធ្វើឱ្យមេឃធ្លាក់ជាបន្ទះៗមកលើពួកយើងដូចអ្វីដែលអ្នកបានអះអាង ឬអ្នកនាំអល់ឡោះ និងម៉ាឡាអ៊ីកាត់មកជួបយើងផ្ទាល់។

أَوۡ تُسۡقِطَ ٱلسَّمَآءَ كَمَا زَعَمۡتَ عَلَيۡنَا كِسَفًا
أَوۡ تَأۡتِيَ بِٱللَّهِ وَٱلۡمَلَٰٓئِكَةِ قَبِيلًا ﴿٩٢﴾

៩៣-ឬអ្នកមានផ្ទះអំពីមាស ឬអ្នកឡើងទៅលើមេឃ។ ហើយ(ទោះបីជាអ្នកឡើងទៅលើមេឃក៏ដោយ) ក៏យើងមិនជឿនឹងការឡើងរបស់អ្នកដែរ លុះត្រាតែអ្នកបញ្ចុះមកឱ្យពួកយើងនូវគម្ពីរមួយ(ពីអល់ឡោះ)ដើម្បីយើងនឹងសូត្រវាជាមុនសិន។ ចូរអ្នកពោលថា: ម្ចាស់របស់ខ្ញុំមហាបរិសុទ្ធ! ខ្ញុំមិនមែនជាអ្វីក្រៅពីជាមនុស្សដែលគេ

أَوۡ يَكُونَ لَكَ بَيۡتٞ مِّن زُخۡرُفٍ أَوۡ تَرۡقَىٰ فِي
ٱلسَّمَآءِ وَلَن نُّؤۡمِنَ لِرُقِيِّكَ حَتَّىٰ تُنَزِّلَ
عَلَيۡنَا كِتَٰبٗا نَّقۡرَؤُهُۥۗ قُلۡ سُبۡحَانَ رَبِّي هَلۡ

តែងតាំងជាអ្នកនាំសារនោះឡើយ ។

៩៤-ហើយគ្មានអ្វីហាមឃាត់មនុស្សលោកមិនឱ្យមានជំនឿនៅពេលដែលការចង្អុលបង្ហាញ( របស់អល់ឡោះ) បានមកដល់ពួកគេនោះឡើយ ។ ផ្ទុយទៅវិញពួកគេបាននិយាយថា: តើអល់ឡោះបានតែងតាំងមនុស្សធម្មតាឱ្យធ្វើជាអ្នកនាំសារឬ?

៩៥-ចូរអ្នក( មូហាំម៉ាត់) ពោលថា: ប្រសិនបើមានបណ្ដាម៉ាឡាអ៊ីកាត់ដើរនៅលើផែនដីដោយសុខសាន្តនោះ យើងពិតជាបញ្ចុះអ្នកនាំសារពីលើមេឃឱ្យពួកគេក៏ជាម៉ាឡាអ៊ីកាត់ដែរ ។

៩៦-ចូរអ្នក( មូហាំម៉ាត់) ពោលថា: គ្រប់គ្រាន់ហើយអល់ឡោះជាសាក្សីរវាងខ្ញុំនិងពួកអ្នក ។ ពិតប្រាកដណាស់ ទ្រង់មហាដឹងមហាឃើញចំពោះខ្ញុំរបស់ទ្រង់ ។

៩៧-ហើយអ្នកណាដែលអល់ឡោះចង្អុលបង្ហាញផ្លូវអ្នកនោះជាអ្នកដែលទទួលបានការចង្អុលបង្ហាញ ។ ហើយអ្នកណាដែលទ្រង់ធ្វើឱ្យវង្វេងនោះ គឺអ្នកមិនអាចរកអ្នកគាំពារសម្រាប់ពួកគេក្រៅពីទ្រង់បានឡើយ ។ ហើយយើងនឹងប្រមូលផ្ដុំពួកគេនៅថ្ងៃបរលោក ( ដើរ) លើផ្ទៃមុខរបស់ពួកគេដោយមិនអាចមើលឃើញ និយាយកើត និងស្ដាប់ឮបានឡើយ ។ ទីកន្លែងរបស់ពួកគេគឺនរកជើហាន់-ណាំ ។ រាល់ពេលដែលវាជិតរលត់ យើងបានបន្ថែមអណ្ដាតភ្លើងឱ្យឆាបឆេះលើពួកគេថែមទៀត ។

៩៨-នោះគឺជាលទ្ធផលរបស់ពួកគេ ដោយសារតែពួកគេបានប្រឆាំងនឹងបណ្ដាភស្តុតាងរបស់យើង ។ ហើយពួកគេបាននិយាយថា: នៅពេលដែលពួកយើងបានក្លាយជាឆ្អឹង និងរលួយទៅជាធូលីហើយនោះ តើពួកយើងពិតជានឹងត្រូវគេធ្វើឱ្យរស់សាជាថ្មីឬ?

៩៩-តើពួកគេមិនបានឃើញទេឬថា: ពិតប្រាកដណាស់ អល់ឡោះជាម្ចាស់ដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដី គឺទ្រង់មានសមត្ថភាពក្នុងការបង្កើតពួកគេដូចដើមនោះ? ហើយទ្រង់បានកំណត់ពេលវេលាមួយយ៉ាងជាក់លាក់សម្រាប់ពួកគេ

كُنتُ إِلَّا بَشَرٗا رَّسُولٗا ٩٣
وَمَا مَنَعَ ٱلنَّاسَ أَن يُؤۡمِنُوٓاْ إِذۡ جَآءَهُمُ
ٱلۡهُدَىٰٓ إِلَّآ أَن قَالُوٓاْ أَبَعَثَ ٱللَّهُ بَشَرٗا
رَّسُولٗا ٩٤
قُل لَّوۡ كَانَ فِي ٱلۡأَرۡضِ مَلَٰٓئِكَةٞ
يَمۡشُونَ مُطۡمَئِنِّينَ لَنَزَّلۡنَا عَلَيۡهِم مِّنَ
ٱلسَّمَآءِ مَلَكٗا رَّسُولٗا ٩٥
قُلۡ كَفَىٰ بِٱللَّهِ شَهِيدَۢا بَيۡنِي وَبَيۡنَكُمۡۚ إِنَّهُۥ
كَانَ بِعِبَادِهِۦ خَبِيرَۢا بَصِيرٗا ٩٦
وَمَن يَهۡدِ ٱللَّهُ فَهُوَ ٱلۡمُهۡتَدِۖ وَمَن يُضۡلِلۡ
فَلَن تَجِدَ لَهُمۡ أَوۡلِيَآءَ مِن دُونِهِۦۖ وَنَحۡشُرُهُمۡ
يَوۡمَ ٱلۡقِيَٰمَةِ عَلَىٰ وُجُوهِهِمۡ عُمۡيٗا وَبُكۡمٗا
وَصُمّٗاۖ مَّأۡوَىٰهُمۡ جَهَنَّمُۖ كُلَّمَا خَبَتۡ
زِدۡنَٰهُمۡ سَعِيرٗا ٩٧
ذَٰلِكَ جَزَآؤُهُم بِأَنَّهُمۡ كَفَرُواْ بِـَٔايَٰتِنَا وَقَالُوٓاْ
أَءِذَا كُنَّا عِظَٰمٗا وَرُفَٰتًا أَءِنَّا لَمَبۡعُوثُونَ
خَلۡقٗا جَدِيدًا ٩٨
۞ أَوَلَمۡ يَرَوۡاْ أَنَّ ٱللَّهَ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ
وَٱلۡأَرۡضَ قَادِرٌ عَلَىٰٓ أَن يَخۡلُقَ مِثۡلَهُمۡ وَجَعَلَ
لَهُمۡ أَجَلٗا لَّا رَيۡبَ فِيهِ فَأَبَى ٱلظَّٰلِمُونَ إِلَّا

كُفُورًا ﴿٩٩﴾

قُل لَّوْ أَنتُمْ تَمْلِكُونَ خَزَآئِنَ رَحْمَةِ رَبِّيٓ إِذًا
لَّأَمْسَكْتُمْ خَشْيَةَ ٱلْإِنفَاقِ ۚ وَكَانَ ٱلْإِنسَٰنُ
قَتُورًا ﴿١٠٠﴾

وَلَقَدْ ءَاتَيْنَا مُوسَىٰ تِسْعَ ءَايَٰتٍۭ بَيِّنَٰتٍ ۖ
فَسْـَٔلْ بَنِىٓ إِسْرَٰٓءِيلَ إِذْ جَآءَهُمْ فَقَالَ
لَهُۥ فِرْعَوْنُ إِنِّى لَأَظُنُّكَ يَٰمُوسَىٰ
مَسْحُورًا ﴿١٠١﴾

قَالَ لَقَدْ عَلِمْتَ مَآ أَنزَلَ هَٰٓؤُلَآءِ إِلَّا رَبُّ
ٱلسَّمَٰوَٰتِ وَٱلْأَرْضِ بَصَآئِرَ وَإِنِّى لَأَظُنُّكَ
يَٰفِرْعَوْنُ مَثْبُورًا ﴿١٠٢﴾

فَأَرَادَ أَن يَسْتَفِزَّهُم مِّنَ ٱلْأَرْضِ فَأَغْرَقْنَٰهُ
وَمَن مَّعَهُۥ جَمِيعًا ﴿١٠٣﴾

وَقُلْنَا مِنۢ بَعْدِهِۦ لِبَنِىٓ إِسْرَٰٓءِيلَ ٱسْكُنُوا۟
ٱلْأَرْضَ فَإِذَا جَآءَ وَعْدُ ٱلْءَاخِرَةِ جِئْنَا بِكُمْ
لَفِيفًا ﴿١٠٤﴾

وَبِٱلْحَقِّ أَنزَلْنَٰهُ وَبِٱلْحَقِّ نَزَلَ ۗ وَمَآ أَرْسَلْنَٰكَ إِلَّا
مُبَشِّرًا وَنَذِيرًا ﴿١٠٥﴾

ដោយគ្មានការសង្ស័យចំពោះរឿងនោះឡើយ ។ ក៏ប៉ុន្តែពួកដែលបំពានមិនទទួលស្គាល់ការពិតក្រៅពីការប្រឆាំងឡើយ ។

១០០-ចូរអ្នក( មូហាំម៉ាត់) ពោល( ទៅកាន់ពួកប្រឆាំង) ថាៈ ប្រសិនបើពួកអ្នកជាអ្នកគ្រប់គ្រងឃ្លាំងលាភសក្ការៈនៃម្ចាស់របស់ខ្ញុំមែននោះ ពួកអ្នកនឹងកំណាញ់ព្រោះតែភ័យខ្លាចក្នុងការចំណាយជាមិនខាន ។ ហើយមនុស្សលោកគឺកំណាញ់បំផុត ។

១០១-ហើយជាការពិតណាស់ យើងបានផ្តល់ឱ្យមូសានូវមុជីហ្សាត់ចំនួនប្រាំបួនយ៉ាងច្បាស់លាស់ ។ ដូច្នេះ ចូរអ្នក( មូហាំម៉ាត់) សួរអំបូរអ៊ីស្រាអែលចុះ! នៅពេលដែលគេ( មូសា) បានមកជួបពួកគេ ពេលនោះហ្វៀរអោនបាននិយាយទៅកាន់គេថាៈ ឱមូសា! ពិតប្រាកដណាស់ ខ្ញុំដឹងយ៉ាងច្បាស់ថា អ្នកត្រូវមន្តអាគមហើយ ។

១០២-គេ( មូសា) បានតបថាៈ អ្នកពិតជាបានដឹងច្បាស់ថា គ្មាននរណាម្នាក់បានបញ្ចុះមុជីហ្សាត់ទាំងនេះឡើយ លើកលែង តែម្ចាស់គ្រប់គ្រងមេឃជាច្រើនជាន់និងផែនដីដើម្បីជាភស្តុតាងយ៉ាងច្បាស់លាស់ប៉ុណ្ណោះ ។ ឱហ្វៀរអោន! ពិតប្រាកដណាស់ ខ្ញុំដឹងយ៉ាងច្បាស់ថា អ្នកនឹងត្រូវវិនាសអន្តរាយជាមិនខាន ។

១០៣-ហើយហ្វៀរអោនចង់បណ្តេញពួកគេ( មូសា និងអំបូរអ៊ីស្រាអែល) ចេញពីទឹកដី( អេហ្ស៊ីប)  តែយើងបានធ្វើឱ្យគេ និងអ្នកដែលនៅជាមួយគេលិចលង់ទាំងអស់ ។

១០៤-ហើយយើងបានមានបន្ទូលទៅកាន់អំបូរអ៊ីស្រាអែលបន្ទាប់ពី( ហ្វៀរអោនបានវិនាសរួច) នោះថាៈ ចូរពួកអ្នករស់នៅលើទឹកដី( ស្ហាម) នេះចុះ! ហើយនៅពេលដែលកិច្ចសន្យានៃថ្ងៃបរលោកបានមកដល់ យើងនឹងនាំពួកអ្នកមកជាក្រុមៗដោយលាយឡំគ្នា( ចេញមកពីផ្នូរទៅកាន់កន្លែងកាត់ក្តី) ។

១០៥-ហើយយើងបានបញ្ចុះវា( គម្ពីរគួរអាន) យ៉ាងពិតប្រាកដ ហើយវាបានចុះមកដោយនាំរឿងពិត ។ ហើយយើងមិនបានបញ្ជូនអ្នក( មូហាំម៉ាត់) មកក្រៅពីជាអ្នកផ្តល់ដំណឹងរីករាយ និងជាអ្នកដាស់តឿនព្រមាន( ដល់មនុស្សលោក) នោះឡើយ ។

وَقُرۡءَانٗا فَرَقۡنَٰهُ لِتَقۡرَأَهُۥ عَلَى ٱلنَّاسِ عَلَىٰ
مُكۡثٖ وَنَزَّلۡنَٰهُ تَنزِيلٗا ١٠٦

១០៦-ហើយ(យើងបានបញ្ចុះឱ្យអ្នក)នូវគម្ពីរគួរអានដែលយើងបានបញ្ជាក់វា(ជាផ្នែកៗ)ដើម្បីអ្នកនឹងសូត្រវាឱ្យមនុស្សលោកស្តាប់ទៅតាមអន្តរវេលា(តាមសាច់រឿងរបស់វា) ។ ហើយយើងបានបញ្ចុះវាបន្តិចម្តងៗ(ក្នុងរយៈពេលម្ភៃបីឆ្នាំ) ។

قُلۡ ءَامِنُواْ بِهِۦٓ أَوۡ لَا تُؤۡمِنُوٓاْۚ إِنَّ ٱلَّذِينَ أُوتُواْ
ٱلۡعِلۡمَ مِن قَبۡلِهِۦٓ إِذَا يُتۡلَىٰ عَلَيۡهِمۡ يَخِرُّونَ
لِلۡأَذۡقَانِ سُجَّدٗا ١٠٧

១០៧-ចូរអ្នក(មូហាំម៉ាត់)ពោល(ទៅកាន់ពួកប្រឆាំង)ថា: ចូរពួកអ្នកជឿលើវា(គម្ពីរគួរអាន)ឬមិនជឿលើវា។ ពិតប្រាកដណាស់ ពួក(យ៉ាហ៊ូទី និងណាសរ៉នី)ដែលត្រូវបានគេផ្តល់ចំណេះដឹងពីមុនវា នៅពេលដែលមានគេសូត្រវាឱ្យពួកគេស្តាប់ គឺពួកគេលំឱនកាយដោយស៊ូជូត(ចំពោះអល់ឡោះ) ។

وَيَقُولُونَ سُبۡحَٰنَ رَبِّنَآ إِن كَانَ وَعۡدُ رَبِّنَا
لَمَفۡعُولٗا ١٠٨

១០៨-ហើយពួកគេនិយាយថា: ម្ចាស់របស់ពួកយើងមហាបរិសុទ្ធ! ពិតប្រាកដណាស់ កិច្ចសន្យានៃម្ចាស់របស់ពួកយើងគឺត្រូវបានអនុវត្ត។

وَيَخِرُّونَ لِلۡأَذۡقَانِ يَبۡكُونَ وَيَزِيدُهُمۡ
خُشُوعٗا۩ ١٠٩

១០៩-ហើយពួកគេលំឱនកាយដោយយំ ហើយវា(គម្ពីរគួរអាន)កាន់តែបន្ថែមដល់ពួកគេនូវភាពកោតខ្លាច ឱនលំទោនថែមទៀត។

قُلِ ٱدۡعُواْ ٱللَّهَ أَوِ ٱدۡعُواْ ٱلرَّحۡمَٰنَۖ أَيّٗا مَّا
تَدۡعُواْ فَلَهُ ٱلۡأَسۡمَآءُ ٱلۡحُسۡنَىٰۚ وَلَا تَجۡهَرۡ
بِصَلَاتِكَ وَلَا تُخَافِتۡ بِهَا وَٱبۡتَغِ بَيۡنَ ذَٰلِكَ
سَبِيلٗا ١١٠

១១០-ចូរអ្នកពោល(ទៅកាន់ពួកមូស្ហរីគីន)ថា: ចូរពួកអ្នកបួងសួងសុំពីអល់ឡោះ ឬពួកអ្នកបួងសួងសុំពីម្ចាស់ដ៏មហាសប្បុរសចុះ! ក្នុងឈ្មោះមួយណាក៏ដោយដែលពួកអ្នកបួងសួងសុំចំពោះទ្រង់ គឺសុទ្ធតែជាឈ្មោះដ៏ឧត្តុង្គឧត្តមទាំងអស់។ ហើយចូរអ្នកកុំបញ្ចេញសំឡេងខ្លាំងពេកក្នុងការប្រតិបត្តិសឡាត ហើយក៏មិនត្រូវបញ្ចេញសំឡេងតិចពេកដែរ ប៉ុន្តែអ្នកត្រូវជ្រើសរើសយកផ្លូវកណ្តាល។

وَقُلِ ٱلۡحَمۡدُ لِلَّهِ ٱلَّذِي لَمۡ يَتَّخِذۡ وَلَدٗا وَلَمۡ
يَكُن لَّهُۥ شَرِيكٞ فِي ٱلۡمُلۡكِ وَلَمۡ يَكُن لَّهُۥ وَلِيّٞ
مِّنَ ٱلذُّلِّۖ وَكَبِّرۡهُ تَكۡبِيرَۢا ١١١

១១១-ហើយចូរអ្នក(មូហាំម៉ាត់)ពោលថា: រាល់ការសរសើរគឺចំពោះអល់ឡោះ ដែលជាអ្នកគ្មានបុត្រ និងគ្មានដៃគូក្នុងការគ្រប់គ្រង ហើយទ្រង់ក៏មិនទន់ខ្សោយដែលត្រូវការអ្នកគាំពារដែរ។ ហើយចូរអ្នកលើកតម្កើងទ្រង់ឱ្យបានថ្កុំថ្កើងបំផុត។

## سورة الكهف

## ជំពូកអាល់កះហ្វី

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

ٱلْحَمْدُ لِلَّهِ ٱلَّذِىٓ أَنزَلَ عَلَىٰ عَبْدِهِ ٱلْكِتَٰبَ
وَلَمْ يَجْعَل لَّهُۥ عِوَجَا ۜ ﴿١﴾

១-រាល់ការសរសើរគឺចំពោះអល់ឡោះ ដែលបានបញ្ចុះគម្ពីរ (គួរអាន) ឱ្យខ្ញុំរបស់ទ្រង់ (មូហាំម៉ាត់) ហើយទ្រង់មិនបានដាក់អ្វីមួយនៅក្នុងវាឱ្យប្រាសចាកពីការពិតឡើយ ។

قَيِّمًا لِّيُنذِرَ بَأْسًا شَدِيدًا مِّن لَّدُنْهُ وَيُبَشِّرَ
ٱلْمُؤْمِنِينَ ٱلَّذِينَ يَعْمَلُونَ ٱلصَّٰلِحَٰتِ أَنَّ
لَهُمْ أَجْرًا حَسَنًا ﴿٢﴾

២-(តែទ្រង់បានបង្កើតវា) ដោយត្រឹមត្រូវ ដើម្បីដាស់តឿនព្រមាន (ពួកគ្មានជំនឿ) នូវទារុណកម្មដ៏ធ្ងន់ធ្ងរពីទ្រង់ ហើយវាផ្ដល់ដំណឹងល្អចំពោះបណ្ដាអ្នកមានជំនឿដែលសាងអំពើល្អថា ពិតប្រាកដណាស់ ពួកគេនឹងទទួលបានផលបុណ្យដ៏ប្រសើរ (ឋានសួគ៌) ។

مَّٰكِثِينَ فِيهِ أَبَدًا ﴿٣﴾

៣-ដោយពួកគេរស់នៅក្នុងនោះ (ឋានសួគ៌) ជាអមតៈ ។

وَيُنذِرَ ٱلَّذِينَ قَالُوا۟ ٱتَّخَذَ ٱللَّهُ وَلَدًا ﴿٤﴾

៤- ហើយវាជាការដាស់តឿនព្រមានដល់ពួក (យ៉ាហ៊ូទី ណាស-រ៉នី និងមូស្ហរីគីន) ដែលបាននិយាយថាៈ អល់ឡោះមានបុត្រ ។

مَّا لَهُم بِهِۦ مِنْ عِلْمٍ وَلَا لِءَابَآئِهِمْ ۚ
كَبُرَتْ كَلِمَةً تَخْرُجُ مِنْ أَفْوَٰهِهِمْ ۚ
إِن يَقُولُونَ إِلَّا كَذِبًا ﴿٥﴾

៥-ពួកគេ និងជីដូនជីតារបស់ពួកគេពុំមានចំណេះដឹងពីវា (ថាអល់ឡោះមានបុត្រ) ឡើយ ។ វាធ្ងន់ធ្ងរបំផុតចំពោះពាក្យសំដីដែលចេញពីមាត់របស់ពួកគេ ។ ពួកគេមិននិយាយអ្វីក្រៅពីការភូតកុហកនោះឡើយ ។

فَلَعَلَّكَ بَٰخِعٌ نَّفْسَكَ عَلَىٰٓ ءَاثَٰرِهِمْ إِن لَّمْ
يُؤْمِنُوا۟ بِهَٰذَا ٱلْحَدِيثِ أَسَفًا ﴿٦﴾

៦-ហើយប្រហែលជាអ្នក (មូហាំម៉ាត់) នឹងធ្វើឱ្យខ្លួនឯងវិនាសដោយសារតែភាពទុក្ខព្រួយចំពោះការបែរចេញ (ពីជំនឿ) របស់ពួកគេ ប្រសិនបើពួកគេមិនបានជឿលើគម្ពីរគួរអាននេះ ។

إِنَّا جَعَلْنَا مَا عَلَى ٱلْأَرْضِ زِينَةً لَّهَا لِنَبْلُوَهُمْ
أَيُّهُمْ أَحْسَنُ عَمَلًا ﴿٧﴾

៧-ពិតប្រាកដណាស់ យើងបានបង្កើតអ្វីៗនៅលើផែនដីនេះជាការលំអសម្រាប់វា ដើម្បីយើងនឹងសាកល្បងពួកគេ ថាតើពួកណាដែលមានទង្វើល្អជាងគេ ។

وَإِنَّا لَجَٰعِلُونَ مَا عَلَيْهَا صَعِيدًا جُرُزًا ﴿٨﴾

៨- ហើយពិតប្រាកដណាស់ យើងនឹងធ្វើឱ្យអ្វីៗដែលនៅលើវា (ផែនដី) ទៅជាធូលីស្ងួតហួតហែងជាមិនខាន ។

أَمْ حَسِبْتَ أَنَّ أَصْحَٰبَ ٱلْكَهْفِ وَٱلرَّقِيمِ
كَانُوا۟ مِنْ ءَايَٰتِنَا عَجَبًا ﴿٩﴾

៩-តើអ្នក (មូហាំម៉ាត់) បានគិតថា ក្រុមដែលនៅក្នុងរូងភ្នំ និងសិលាចារិកឈ្មោះរបស់ពួកគេ វាពិតជារឿងចម្លែកក្នុងចំណោមភស្តុតាងៗរបស់យើងឬ?

إِذْ أَوَى ٱلْفِتْيَةُ إِلَى ٱلْكَهْفِ فَقَالُوا۟ رَبَّنَآ

១០-(ចូរចងចាំ) នៅពេលដែលក្រុមយុវជនបានភៀសខ្លួន (ពីពួកដែលគ្មានជំនឿ) ចូលទៅជ្រកកោននៅក្នុងរូងភ្នំ ហើយពួកគេ

ءَاتِنَا مِن لَّدُنكَ رَحۡمَةٗ وَهَيِّئۡ لَنَا مِنۡ أَمۡرِنَا
رَشَدٗا ١٠

បានបួងសួងសុំថា: ឱម្ចាស់របស់យើងខ្ញុំ! សូមទ្រង់មេត្តាផ្តល់ឱ្យយើងខ្ញុំនូវក្តីមេត្តាករុណាពីទ្រង់ ហើយសូមទ្រង់មេត្តាផ្តល់ភាពងាយស្រួលដល់កិច្ចការរបស់ពួកយើងឱ្យទៅរកមាគ៌ាដ៏ត្រឹមត្រូវផងចុះ ។

فَضَرَبۡنَا عَلَىٰٓ ءَاذَانِهِمۡ فِي ٱلۡكَهۡفِ سِنِينَ
عَدَدٗا ١١

១១-ហើយយើងបានធ្វើឱ្យពួកគេដេកលក់នៅក្នុងរូងភ្នំអស់រយៈពេលជាច្រើនឆ្នាំ ។

ثُمَّ بَعَثۡنَٰهُمۡ لِنَعۡلَمَ أَيُّ ٱلۡحِزۡبَيۡنِ أَحۡصَىٰ لِمَا
لَبِثُوٓاْ أَمَدٗا ١٢

១២-បន្ទាប់មកយើងបានដាស់ពួកគេឱ្យភ្ញាក់ពីដំណេកវិញ ដើម្បីយើងចង់ដឹងថា តើក្រុមមួយណានៃក្រុមទាំងពីរ( ក្រុមមានជំនឿ និងគ្មានជំនឿ ) ដែលអាចដឹងច្បាស់អំពីថេរវេលានៃការស្នាក់នៅរបស់ពួកគេនោះ ។

نَّحۡنُ نَقُصُّ عَلَيۡكَ نَبَأَهُم بِٱلۡحَقِّۚ إِنَّهُمۡ فِتۡيَةٌ
ءَامَنُواْ بِرَبِّهِمۡ وَزِدۡنَٰهُمۡ هُدٗى ١٣

១៣-យើងនិទានប្រាប់អ្នក( មូហាំម៉ាត់) អំពីរឿងរបស់ពួកគេដោយពិតប្រាកដ ។ ពិតប្រាកដណាស់ ពួកគេគឺជាយុវជនដែលមានជំនឿលើម្ចាស់របស់ពួកគេ ហើយយើងបានបន្ថែមឱ្យពួកគេនូវការចង្អុលបង្ហាញថែមទៀត ។

وَرَبَطۡنَا عَلَىٰ قُلُوبِهِمۡ إِذۡ قَامُواْ فَقَالُواْ رَبُّنَا
رَبُّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ لَن نَّدۡعُوَاْ مِن
دُونِهِۦٓ إِلَٰهٗاۖ لَّقَدۡ قُلۡنَآ إِذٗا شَطَطًا ١٤

១៤-ហើយយើងបានពង្រឹងចិត្តរបស់ពួកគេនៅពេលដែលពួកគេបានឈរ( ចំពោះមុខស្តេចដែលគ្មានជំនឿ) ពេលនោះពួកគេបាននិយាយថា: ម្ចាស់របស់ពួកយើង គឺជាម្ចាស់នៃមេឃជាច្រើនជាន់ និងផែនដី ។ ពួកយើងមិនគោរពសក្ការៈម្ចាស់ណាក្រៅពីទ្រង់ជាដាច់ខាត ។ ( ប្រសិនបើយើងនិយាយផ្សេងពីនេះ) ពួកយើងពិតជាបាននិយាយប្រាសចាកពីការពិតជាមិនខាន ។

هَٰٓؤُلَآءِ قَوۡمُنَا ٱتَّخَذُواْ مِن دُونِهِۦٓ ءَالِهَةٗۖ لَّوۡلَا
يَأۡتُونَ عَلَيۡهِم بِسُلۡطَٰنِۭ بَيِّنٖۖ فَمَنۡ أَظۡلَمُ
مِمَّنِ ٱفۡتَرَىٰ عَلَى ٱللَّهِ كَذِبٗا ١٥

១៥-( ក្រុមយុវជនរូងភ្នំដែលមានជំនឿលើអល់ឡោះបាននិយាយថា) ពួកគេ( ពួកគ្មានជំនឿ ) ទាំងនេះជាក្រុមរបស់ពួកយើង គឺពួកគេបានយកម្ចាស់នានាមកគោរពសក្ការៈក្រៅពីទ្រង់ ។ ហេតុអ្វីបានជាពួកគេមិននាំមកនូវភស្តុតាងមួយយ៉ាងច្បាស់លាស់ដល់ពួកគេ( ដើម្បីបញ្ជាក់ថា ការគោរពសក្ការៈរបស់ពួកគេត្រឹមត្រូវ) ? តើមាននរណាដែលបំពានជាងអ្នកដែលប្រឌិតនូវពាក្យភូតកុហកចំពោះអល់ឡោះទៀតនោះ?

وَإِذِ ٱعۡتَزَلۡتُمُوهُمۡ وَمَا يَعۡبُدُونَ إِلَّا

១៦-( យុវជនម្នាក់និយាយទៅកាន់គ្នារបស់គេថា) នៅពេល

ٱللَّهَ فَأۡوُۥٓاْ إِلَى ٱلۡكَهۡفِ يَنشُرۡ لَكُمۡ رَبُّكُم مِّن رَّحۡمَتِهِۦ وَيُهَيِّئۡ لَكُم مِّنۡ أَمۡرِكُم مِّرۡفَقٗا ١٦

ដែលពួកអ្នកដកខ្លួនចេញពីពួកគេ (ពួកគ្មានជំនឿ) និងពីអ្វីដែលពួកគេគោរពពក្រៅពីអល់ឡោះនោះ ចូរពួកអ្នកទៅជ្រកកោននៅក្នុងរូងភ្នំចុះ ម្ចាស់របស់ពួកអ្នកនឹងផ្តល់ឱ្យពួកអ្នកនូវក្តីមេត្តាករុណារបស់ទ្រង់។ ហើយទ្រង់នឹងផ្តល់ភាពងាយស្រួលដល់ពួកអ្នកនូវរាល់កិច្ចការរស់នៅរបស់ពួកអ្នក។

۞ وَتَرَى ٱلشَّمۡسَ إِذَا طَلَعَت تَّزَٰوَرُ عَن كَهۡفِهِمۡ ذَاتَ ٱلۡيَمِينِ وَإِذَا غَرَبَت تَّقۡرِضُهُمۡ ذَاتَ ٱلشِّمَالِ وَهُمۡ فِي فَجۡوَةٖ مِّنۡهُۚ ذَٰلِكَ مِنۡ ءَايَٰتِ ٱللَّهِۗ مَن يَهۡدِ ٱللَّهُ فَهُوَ ٱلۡمُهۡتَدِۖ وَمَن يُضۡلِلۡ فَلَن تَجِدَ لَهُۥ وَلِيّٗا مُّرۡشِدٗا ١٧

១៧-ហើយអ្នក (មូហាំម៉ាត់) នឹងឃើញព្រះអាទិត្យនៅពេលដែលវារះ គឺជ្រេទៅខាងស្តាំនៃរូងភ្នំរបស់ពួកគេ ហើយនៅពេលដែលវាលិច គឺជ្រេទៅខាងឆ្វេងវិញ ខណៈដែលពួកគេស្ថិតនៅកន្លែងដែលទូលាយនៃរូងភ្នំ។ នោះគឺជាភស្តុតាងមួយក្នុងចំណោមភស្តុតាងៗរបស់អល់ឡោះ។ អ្នកណាហើយដែលអល់ឡោះចង្អុលបង្ហាញគឺអ្នកនោះជាអ្នកដែលទទួលបានការចង្អុលបង្ហាញ។ រីឯអ្នកណាដែលទ្រង់ធ្វើឱ្យគេវង្វេងគឺអ្នកនឹងមិនអាចរកអ្នកគាំពារមកដឹកនាំគេ (ឱ្យទៅរកមាគ៌ាដ៏ត្រឹមត្រូវ) បានជាដាច់ខាត។

وَتَحۡسَبُهُمۡ أَيۡقَاظٗا وَهُمۡ رُقُودٞۚ وَنُقَلِّبُهُمۡ ذَاتَ ٱلۡيَمِينِ وَذَاتَ ٱلشِّمَالِۖ وَكَلۡبُهُم بَٰسِطٞ ذِرَاعَيۡهِ بِٱلۡوَصِيدِۚ لَوِ ٱطَّلَعۡتَ عَلَيۡهِمۡ لَوَلَّيۡتَ مِنۡهُمۡ فِرَارٗا وَلَمُلِئۡتَ مِنۡهُمۡ رُعۡبٗا ١٨

១៨-ហើយអ្នកនឹកស្មានថា: ពួកគេភ្ញាក់ពីដំណេក ខណៈដែលពួកគេគេងលក់។ ហើយយើង (អល់ឡោះ) បានប្រែខ្លួនពួកគេម្តងទៅខាងស្តាំម្តងទៅខាងឆ្វេង។ ហើយឆ្កែរបស់ពួកគេបានដេកសណ្តូកជើងមុខទាំងពីររបស់វានៅមាត់រូង។ ប្រសិនបើអ្នកបានឃើញពួកគេ អ្នកពិតជានឹងរត់គេចពីពួកគេ ហើយធ្វើឱ្យអ្នកមានការភ័យខ្លាចពួកគេជាមិនខាន។

وَكَذَٰلِكَ بَعَثۡنَٰهُمۡ لِيَتَسَآءَلُواْ بَيۡنَهُمۡۚ قَالَ قَآئِلٞ مِّنۡهُمۡ كَمۡ لَبِثۡتُمۡۖ قَالُواْ لَبِثۡنَا يَوۡمًا أَوۡ بَعۡضَ يَوۡمٖۚ قَالُواْ رَبُّكُمۡ أَعۡلَمُ بِمَا لَبِثۡتُمۡ فَٱبۡعَثُوٓاْ أَحَدَكُم بِوَرِقِكُمۡ هَٰذِهِۦٓ إِلَى ٱلۡمَدِينَةِ فَلۡيَنظُرۡ أَيُّهَآ أَزۡكَىٰ طَعَامٗا فَلۡيَأۡتِكُم بِرِزۡقٖ مِّنۡهُ وَلۡيَتَلَطَّفۡ وَلَا يُشۡعِرَنَّ بِكُمۡ أَحَدًا ١٩

១៩-ហើយដូច្នេះដែរ យើងក៏បានធ្វើឱ្យពួកគេភ្ញាក់ពីដំណេកវិញ ដើម្បីឱ្យពួកគេសួរគ្នាទៅវិញទៅមក។ ម្នាក់ក្នុងចំណោមពួកគេបានសួរថា: តើពួកអ្នកបានគេងអស់រយៈពេលប៉ុន្មានហើយ? ពួកគេឆ្លើយថា: យើងបានគេងអស់រយៈពេលមួយថ្ងៃ ឬកន្លះថ្ងៃហើយ។ ពួកគេបាននិយាយទៀតថា: មានតែម្ចាស់របស់ពួកអ្នកទេ ដែលដឹងបំផុតនូវរយៈពេលដែលពួកអ្នកបានគេងនោះ។ ដូច្នេះ សូមពួកអ្នកចាត់តាំងឱ្យនរណាម្នាក់ក្នុងចំណោមពួកអ្នកយកប្រាក់ទាំងនេះទៅទីក្រុង ហើយឱ្យគេរកមើល តើចំណីអាហារណាដែលល្អជាងគេ? ហើយឱ្យគេយកចំណីអាហារនោះមកឱ្យពួកអ្នក។ តែត្រូវឱ្យគេប្រុងប្រយ័ត្ន និងមិនត្រូវឱ្យអ្នកណាម្នាក់ដឹងពីរឿង

របស់ពួកអ្នកឡើយ ។

إِنَّهُمْ إِن يَظْهَرُوا۟ عَلَيْكُمْ يَرْجُمُوكُمْ أَوْ يُعِيدُوكُمْ فِى مِلَّتِهِمْ وَلَن تُفْلِحُوٓا۟ إِذًا أَبَدًا ﴿٢٠﴾

២០-ពិតប្រាកដណាស់ ប្រសិនបើពួកគេបានដឹងពីទីកន្លែងរបស់ពួកអ្នក ពួកគេនឹងគប់ពួកអ្នកនឹងដុំថ្ម ឬក៏ឱ្យពួកអ្នកវិលទៅរកសាសនារបស់ពួកគេវិញជាមិនខាន ។ ហើយបើដូច្នេះមែន ពួកអ្នកនឹងមិនទទួលបានជោគជ័យជាដាច់ខាត ។

وَكَذَٰلِكَ أَعْثَرْنَا عَلَيْهِمْ لِيَعْلَمُوٓا۟ أَنَّ وَعْدَ ٱللَّهِ حَقٌّ وَأَنَّ ٱلسَّاعَةَ لَا رَيْبَ فِيهَآ إِذْ يَتَنَٰزَعُونَ بَيْنَهُمْ أَمْرَهُمْ ۖ فَقَالُوا۟ ٱبْنُوا۟ عَلَيْهِم بُنْيَٰنًا ۖ رَّبُّهُمْ أَعْلَمُ بِهِمْ ۚ قَالَ ٱلَّذِينَ غَلَبُوا۟ عَلَىٰٓ أَمْرِهِمْ لَنَتَّخِذَنَّ عَلَيْهِم مَّسْجِدًا ﴿٢١﴾

២១-ហើយដូច្នោះដែរ យើងបានលាតត្រដាងរឿងរបស់ពួកគេ ដើម្បីឱ្យពួកគេ(មនុស្សលោក)ដឹងថា: ពិតប្រាកដណាស់ កិច្ចសន្យារបស់អល់ឡោះគឺជាការពិត ហើយថ្ងៃបរលោកគឺពុំមានការសង្ស័យឡើយ ។ នៅពេលដែលពួកគេខ្វែងគំនិតគ្នាទៅវិញទៅមកអំពីរឿងរបស់ពួកគេ(អ្នកនៅក្នុងរូងភ្នំ) ពេលនោះពួកគេបាននិយាយថា: ចូរពួកអ្នកកសាងអគារមួយនៅលើរូងភ្នំរបស់ពួកគេ ។ ម្ចាស់របស់ពួកគេដឹងបំផុតពីរឿងរបស់ពួកគេ ។ បណ្តាអ្នកដែលមានឥទ្ធិពលលើកិច្ចការរបស់ពួកគេបាននិយាយថា: ពិតប្រាកដណាស់ ពួកយើងនឹងយកកន្លែងរបស់ពួកគេនេះធ្វើជាម៉ាស្ជិទតែម្តង ។

سَيَقُولُونَ ثَلَٰثَةٌ رَّابِعُهُمْ كَلْبُهُمْ وَيَقُولُونَ خَمْسَةٌ سَادِسُهُمْ كَلْبُهُمْ رَجْمًۢا بِٱلْغَيْبِ ۖ وَيَقُولُونَ سَبْعَةٌ وَثَامِنُهُمْ كَلْبُهُمْ ۚ قُل رَّبِّىٓ أَعْلَمُ بِعِدَّتِهِم مَّا يَعْلَمُهُمْ إِلَّا قَلِيلٌ ۗ فَلَا تُمَارِ فِيهِمْ إِلَّا مِرَآءً ظَٰهِرًا وَلَا تَسْتَفْتِ فِيهِم مِّنْهُمْ أَحَدًا ﴿٢٢﴾

២២-ពួកគេមួយចំនួននឹងនិយាយថា: ពួកគេ(អ្នកនៅក្នុងរូងភ្នំ) មានចំនួនបីនាក់ ទីបួនគឺឆ្កែរបស់ពួកគេ ។ ហើយពួកគេខ្លះទៀតនិយាយថា: មានប្រាំនាក់ ទីប្រាំមួយគឺឆ្កែរបស់ពួកគេ ។ ពួកគេ(ទាំងពីរក្រុម) គ្រាន់តែនិយាយស្មានទៅលើអ្វីដែលពួកគេមិនបានឃើញប៉ុណ្ណោះ ។ រីឯពួកគេមួយចំនួនទៀតនិយាយថា: មានប្រាំពីរនាក់ ហើយទីប្រាំបីគឺឆ្កែរបស់ពួកគេ ។ ចូរអ្នក(មូហាំម៉ាត់) ពោលថា: ម្ចាស់របស់ខ្ញុំដឹងបំផុតនូវចំនួនរបស់ពួកគេ ។ គ្មានអ្នកណាម្នាក់អាចដឹងពីចំនួនពួកគេឡើយ លើកលែងតែមួយចំនួនតូចប៉ុណ្ណោះ ។ ដូច្នេះ ចូរអ្នកកុំដេញដោលគ្នាអំពីចំនួនរបស់ពួកគេ លើកលែងតែអ្វីដែលមានភស្តុតាងច្បាស់លាស់ ហើយចូរអ្នកកុំពិគ្រោះយោបល់ជាមួយអ្នកណាម្នាក់ក្នុងចំណោមពួកគេ(យ៉ាហ៊ូទី និងណាសរ៉នី) អំពីពួកដែលនៅក្នុងរូងភ្នំនោះឱ្យសោះ ។

وَلَا تَقُولَنَّ لِشَا۟ىْءٍ إِنِّى فَاعِلٌ ذَٰلِكَ غَدًا ﴿٢٣﴾

២៣-ហើយចូរអ្នក(មូហាំម៉ាត់) កុំពោលអ្វីមួយថា: ខ្ញុំពិតជានឹងធ្វើវានៅថ្ងៃស្អែកឱ្យសោះ ។

إِلَّآ أَن يَشَآءَ ٱللَّهُۚ وَٱذۡكُر رَّبَّكَ إِذَا نَسِيتَ
وَقُلۡ عَسَىٰٓ أَن يَهۡدِيَنِ رَبِّي لِأَقۡرَبَ مِنۡ هَٰذَا
رَشَدٗا ٢٤

២៤-លើកលែងតែអ្នកពោលថាៈ អ៊ិនស្ហាអល់ឡោះ(បើសិនជាអល់ឡោះមានចេតនា)។ ចូរអ្នករំលឹកទៅចំពោះម្ចាស់របស់អ្នក នៅពេលណាដែលអ្នកបានភ្លេច ហើយចូរអ្នកពោលថាៈ សង្ឃឹមថា ម្ចាស់របស់ខ្ញុំនឹងចង្អុលបង្ហាញខ្ញុំទៅរកមាគ៌ាដែលត្រឹមត្រូវជិតជាងនេះទៅទៀត។

وَلَبِثُواْ فِي كَهۡفِهِمۡ ثَلَٰثَ مِاْئَةٖ سِنِينَ
وَٱزۡدَادُواْ تِسۡعٗا ٢٥

២៥-ហើយពួកគេបានដេកក្នុងរូងភ្នំរបស់ពួកគេអស់រយៈពេលបីរយឆ្នាំ និងថែមប្រាំបួនឆ្នាំ(៣០៩ឆ្នាំ)។

قُلِ ٱللَّهُ أَعۡلَمُ بِمَا لَبِثُواْۖ لَهُۥ غَيۡبُ
ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ أَبۡصِرۡ بِهِۦ وَأَسۡمِعۡۚ
مَا لَهُم مِّن دُونِهِۦ مِن وَلِيّٖ وَلَا يُشۡرِكُ فِي
حُكۡمِهِۦٓ أَحَدٗا ٢٦

២៦-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ អល់ឡោះដឹងនូវរយៈពេលដែលពួកគេបានដេក។ ភាពអាថ៌កំបាំងនៃមេឃជាច្រើនជាន់ និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់។ ទ្រង់ឃើញនិងឮនូវអ្វីៗទាំងអស់។ ពួកគេគ្មានអ្នកគាំពារក្រៅពីទ្រង់ឡើយ ។ហើយទ្រង់មិនយកអ្នកណាម្នាក់មកចូលរួមជាដៃគូក្នុងការសម្រេចបទបញ្ញត្តិរបស់ទ្រង់ឡើយ។

وَٱتۡلُ مَآ أُوحِيَ إِلَيۡكَ مِن كِتَابِ رَبِّكَۖ لَا
مُبَدِّلَ لِكَلِمَٰتِهِۦ وَلَن تَجِدَ مِن دُونِهِۦ
مُلۡتَحَدٗا ٢٧

២៧-ចូរអ្នក(មូហាំម៉ាត់)សូត្រនូវអ្វីដែលគេបានផ្តល់វ៉ាហ៊ីឱ្យអ្នកអំពីគម្ពីរ(គួរអាន)នៃម្ចាស់របស់អ្នក។ គ្មាននរណាម្នាក់អាចប្តូរពាក្យពេចន៍របស់ទ្រង់បានឡើយ។ ហើយអ្នកនឹងមិនអាចស្វែងរកកន្លែងជ្រកកោនក្រៅពីទ្រង់បានឡើយ។

وَٱصۡبِرۡ نَفۡسَكَ مَعَ ٱلَّذِينَ يَدۡعُونَ رَبَّهُم
بِٱلۡغَدَوٰةِ وَٱلۡعَشِيِّ يُرِيدُونَ وَجۡهَهُۥۖ وَلَا تَعۡدُ
عَيۡنَاكَ عَنۡهُمۡ تُرِيدُ زِينَةَ ٱلۡحَيَوٰةِ ٱلدُّنۡيَاۖ وَلَا
تُطِعۡ مَنۡ أَغۡفَلۡنَا قَلۡبَهُۥ عَن ذِكۡرِنَا وَٱتَّبَعَ
هَوَىٰهُ وَكَانَ أَمۡرُهُۥ فُرُطٗا ٢٨

២៨-ចូរអ្នកអត់ធ្មត់ខ្លួនឯងជាមួយនឹងបណ្តាអ្នកដែលគោរពសក្ការៈចំពោះម្ចាស់របស់ពួកគេទាំងព្រឹកទាំងល្ងាចដោយពួកគេចង់បានការយល់ព្រមពីទ្រង់។ ហើយចូរអ្នកកុំមើលរំលងពួកគេដោយអ្នកចង់បានភាពអស្ចារ្យនៃការរស់នៅក្នុងលោកិយ។ ហើយចូរអ្នកកុំគោរពតាមអ្នកដែលយើងបានធ្វើឱ្យចិត្តរបស់គេមិនយកចិត្តទុកដាក់ក្នុងការរំលឹកមកចំពោះយើង និងបានធ្វើតាមតែអំពើចិត្តរបស់គេឱ្យសោះ។ ហើយកិច្ចការរបស់គេក្លាយទៅជាអន្តរាយទៅវិញ។

وَقُلِ ٱلۡحَقُّ مِن رَّبِّكُمۡۖ فَمَن شَآءَ فَلۡيُؤۡمِن
وَمَن شَآءَ فَلۡيَكۡفُرۡۚ إِنَّآ أَعۡتَدۡنَا لِلظَّٰلِمِينَ
نَارًا أَحَاطَ بِهِمۡ سُرَادِقُهَاۚ وَإِن يَسۡتَغِيثُواْ

២៩-ចូរអ្នកពោលថាៈ ភាពពិតគឺមកពីម្ចាស់របស់ពួកអ្នក។ ហើយបើអ្នកណាមានបំណង(មានជំនឿ)ចូរឱ្យគេមានជំនឿចុះ។ តែបើអ្នកណាមានបំណង(គ្មានជំនឿ)វិញ ចូរឱ្យគេប្រឆាំងចុះ។ ពិតប្រាកដណាស់ យើងបានរៀបចំសម្រាប់ពួកដែលបំពាននូវភ្លើង

يُغَاثُواْ بِمَآءٍ كَٱلۡمُهۡلِ يَشۡوِي ٱلۡوُجُوهَۚ
بِئۡسَ ٱلشَّرَابُ وَسَآءَتۡ مُرۡتَفَقًا ٢٩

នរក ដែលមានជញ្ជាំងព័ទ្ធជុំវិញពួកគេ។ ហើយប្រសិនបើពួកគេសុំឱ្យជួយ( សុំទឹកផឹក) ពួកគេត្រូវបានគេផ្តល់ឱ្យនូវទឹកដូចជាប្រេងកំពុងពុះធ្វើឱ្យរលាកផ្ទៃមុខរបស់ពួកគេ។ គ្រឿងផឹកនិងកន្លែងរស់នៅរបស់ពួកគេគឺអាក្រក់ជាទីបំផុត។

إِنَّ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ إِنَّا
لَا نُضِيعُ أَجۡرَ مَنۡ أَحۡسَنَ عَمَلًا ٣٠

៣០-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿនិងបានសាងអំពើល្អនោះ គឺយើងពិតជានឹងមិនឱ្យបាត់បង់នូវផលបុណ្យរបស់អ្នកដែលបានសាងអំពើល្អនោះឡើយ។

أُوْلَٰٓئِكَ لَهُمۡ جَنَّٰتُ عَدۡنٖ تَجۡرِي مِن تَحۡتِهِمُ
ٱلۡأَنۡهَٰرُ يُحَلَّوۡنَ فِيهَا مِنۡ أَسَاوِرَ مِن ذَهَبٖ
وَيَلۡبَسُونَ ثِيَابًا خُضۡرٗا مِّن سُندُسٖ وَإِسۡتَبۡرَقٖ
مُّتَّكِـِٔينَ فِيهَا عَلَى ٱلۡأَرَآئِكِۚ نِعۡمَ ٱلثَّوَابُ
وَحَسُنَتۡ مُرۡتَفَقٗا ٣١

៣១-អ្នកទាំងនោះ ពួកគេនឹងទទួលបានឋានសួគ៌អាត់និនដែលមានទន្លេជាច្រើនហូរពីក្រោម ដោយពួកគេត្រូវបានតុបតែងដោយកងដៃធ្វើអំពីមាសនិងស្លៀកសំលៀកបំពាក់ពណ៌បៃតងធ្វើពីសូត្រម៉ដ្ឋខៃ និងក្រាស់ដ៏ប្រណីត ដោយពួកគេអង្គុយផ្អែកនៅលើគ្រែដែលល្អប្រណីត។ ផលបុណ្យនិងកន្លែងរស់នៅគឺល្អប្រសើរបំផុត។

۞ وَٱضۡرِبۡ لَهُم مَّثَلٗا رَّجُلَيۡنِ جَعَلۡنَا
لِأَحَدِهِمَا جَنَّتَيۡنِ مِنۡ أَعۡنَٰبٖ وَحَفَفۡنَٰهُمَا
بِنَخۡلٖ وَجَعَلۡنَا بَيۡنَهُمَا زَرۡعٗا ٣٢

៣២-ចូរអ្នក( មូហាំម៉ាត់) លើកយកបុរសពីរនាក់( មានជំនឿនិងគ្មានជំនឿ) មកធ្វើជាឧទាហរណ៍ដល់ពួកគេ( ពួកគ្មានជំនឿ) ដែលយើងបានប្រទានឱ្យគេ( អ្នកគ្មានជំនឿ) ម្នាក់នៃគេទាំងពីរនូវចំការទំពាំងបាយជូរពីរ ហើយយើងបានធ្វើរបងពីដើមល្មើព័ទ្ធជុំវិញវាទាំងពីរ ព្រមទាំងយើងបានធ្វើឱ្យមានដំណាំផ្សេងៗនៅចន្លោះចំការទាំងពីរនោះទៀត។

كِلۡتَا ٱلۡجَنَّتَيۡنِ ءَاتَتۡ أُكُلَهَا وَلَمۡ تَظۡلِم مِّنۡهُ
شَيۡـٔٗاۚ وَفَجَّرۡنَا خِلَٰلَهُمَا نَهَرٗا ٣٣

៣៣-ចំការទាំងពីរនោះបានផ្តល់ផលដោយគ្មានខ្វះអ្វីឡើយ។ ហើយយើងបានធ្វើឱ្យមានទន្លេមួយមានទឹកផុសចេញមករវាងចំការទាំងពីរ។

وَكَانَ لَهُۥ ثَمَرٞ فَقَالَ لِصَٰحِبِهِۦ وَهُوَ
يُحَاوِرُهُۥٓ أَنَا۠ أَكۡثَرُ مِنكَ مَالٗا وَأَعَزُّ نَفَرٗا ٣٤

៣៤-ហើយគេនោះមានទ្រព្យសម្បត្តិជាច្រើន បន្ទាប់មកគេបាននិយាយទៅកាន់មិត្តភក្តិ( មានជំនឿ) របស់គេដោយជជែកគ្នាថា: ខ្ញុំមានទ្រព្យសម្បត្តិ និងមានអ្នកខ្លាំងៗជួយខ្ញុំច្រើនជាងអ្នក។

وَدَخَلَ جَنَّتَهُۥ وَهُوَ ظَالِمٞ لِّنَفۡسِهِۦ قَالَ مَآ
أَظُنُّ أَن تَبِيدَ هَٰذِهِۦٓ أَبَدٗا ٣٥

៣៥-ហើយគេបានចូលទៅក្នុងចំការរបស់គេ ខណៈដែលគេជាអ្នកបំពានលើខ្លួនឯង ដោយគេបាននិយាយថា: ខ្ញុំមិនគិតថាចំការ

នេះនឹងវិនាសអន្តរាយឡើយ ។

៣៦-ហើយខ្ញុំក៏មិនគិតថា ថ្ងៃបរលោកនឹងកើតមានដែរ ។ តែប្រសិនបើខ្ញុំត្រូវបានគេឱ្យវិលត្រឡប់ទៅរកម្ចាស់របស់ខ្ញុំវិញនោះ ខ្ញុំពិតជានឹងបានជួបនូវកន្លែងវិលត្រឡប់មួយដែលប្រសើរជាងចំការនេះទៅទៀត ។

وَمَآ أَظُنُّ ٱلسَّاعَةَ قَآئِمَةً وَلَئِن رُّدِدتُّ إِلَىٰ رَبِّى لَأَجِدَنَّ خَيْرًا مِّنْهَا مُنقَلَبًا ﴿٣٦﴾

៣៧-មិត្តភក្តិ(អ្នកមានជំនឿ)របស់គេបានតបទៅកាន់គេ(អ្នកគ្មានជំនឿ)វិញដោយនិយាយថា: តើអ្នកប្រឆាំងនឹងអ្នកដែលបានបង្កើតអ្នកពីដី បន្ទាប់មកពីទឹកកាម បន្ទាប់មកទៀតធ្វើឱ្យអ្នកមានរូបរាងជាមនុស្សឬ?

قَالَ لَهُۥ صَاحِبُهُۥ وَهُوَ يُحَاوِرُهُۥٓ أَكَفَرْتَ بِٱلَّذِى خَلَقَكَ مِن تُرَابٍ ثُمَّ مِن نُّطْفَةٍ ثُمَّ سَوَّىٰكَ رَجُلًا ﴿٣٧﴾

៣៨-ប៉ុន្តែសម្រាប់ខ្ញុំវិញ ខ្ញុំជឿថាទ្រង់គឺជាអល់ឡោះដែលជាម្ចាស់របស់ខ្ញុំ ។ ហើយខ្ញុំមិនយកអ្នកណាម្នាក់ធ្វើជាដៃគូជាមួយម្ចាស់របស់ខ្ញុំឡើយ ។

لَّٰكِنَّا۠ هُوَ ٱللَّهُ رَبِّى وَلَآ أُشْرِكُ بِرَبِّىٓ أَحَدًا ﴿٣٨﴾

៣៩-ហេតុអ្វីបានជានៅពេលដែលអ្នកបានចូលទៅក្នុងចំការរបស់អ្នកមិនសូត្រថា: مَاشَاءَ اللّٰهُ لَا قُوَّةَ إِلَّا بِاللّٰهِ (មានន័យថា: អ្វីៗដែលអល់ឡោះមានចេតនាគឺគ្មានឥទ្ធិពលណាក្រៅពីអល់ឡោះឡើយ) ប្រសិនបើអ្នកឃើញខ្ញុំមានទ្រព្យសម្បត្តិនិងកូនចៅតិចជាងអ្នកនោះ?

وَلَوْلَآ إِذْ دَخَلْتَ جَنَّتَكَ قُلْتَ مَا شَآءَ ٱللَّهُ لَا قُوَّةَ إِلَّا بِٱللَّهِ ۚ إِن تَرَنِ أَنَا۠ أَقَلَّ مِنكَ مَالًا وَوَلَدًا ﴿٣٩﴾

៤០-សង្ឃឹមថា ម្ចាស់របស់ខ្ញុំនឹងផ្តល់ឱ្យខ្ញុំនូវអ្វីផ្សេងប្រសើរជាងចំការរបស់អ្នកទៅទៀត ហើយទ្រង់នឹងបញ្ជូនទារុណកម្មដ៏ធ្ងន់ធ្ងរពីលើមេឃមកលើវា ហើយវានឹងក្លាយទៅជាដីទទេជាមិនខាន ។

فَعَسَىٰ رَبِّىٓ أَن يُؤْتِيَنِ خَيْرًا مِّن جَنَّتِكَ وَيُرْسِلَ عَلَيْهَا حُسْبَانًا مِّنَ ٱلسَّمَآءِ فَتُصْبِحَ صَعِيدًا زَلَقًا ﴿٤٠﴾

៤១-ឬក៏ទឹករបស់វាត្រូវដីស្រូបអស់ ហើយអ្នកនឹងមិនអាចរកទឹកនោះបានឡើយ ។

أَوْ يُصْبِحَ مَآؤُهَا غَوْرًا فَلَن تَسْتَطِيعَ لَهُۥ طَلَبًا ﴿٤١﴾

៤២-ហើយភោគផលរបស់គេត្រូវវិនាស ហើយគេបានទះដៃទាំងពីររបស់គេ(ដោយការសោកស្តាយ) ទៅលើអ្វីដែលគេបានចំណាយចំពោះវា(ចំការ) ខណៈដែលជន្ទល់ទាំងអស់របស់វាត្រូវបំផ្លាញ ។ ហើយគេបាននិយាយថា: ឱអនិច្ចាខ្លួនខ្ញុំ! ខ្ញុំមិនបានយកអ្នកណា

وَأُحِيطَ بِثَمَرِهِۦ فَأَصْبَحَ يُقَلِّبُ كَفَّيْهِ عَلَىٰ مَآ أَنفَقَ فِيهَا وَهِىَ خَاوِيَةٌ عَلَىٰ عُرُوشِهَا وَيَقُولُ يَٰلَيْتَنِى لَمْ أُشْرِكْ بِرَبِّىٓ أَحَدًا ﴿٤٢﴾

ម្នាក់ធ្វើជាដៃគូគោរពសក្ការៈរួមជាមួយនឹងម្ចាស់របស់ខ្ញុំឡើយ ។

وَلَمۡ تَكُن لَّهُۥ فِئَةٞ يَنصُرُونَهُۥ مِن دُونِ ٱللَّهِ وَمَا كَانَ مُنتَصِرًا ﴿٤٣﴾

៤៣-ហើយគ្មានក្រុមណាមួយអាចជួយគេក្រៅពីអល់ឡោះឡើយ ។ ហើយគេក៏មិនអាចជួយខ្លួនឯងបានដែរ ។

هُنَالِكَ ٱلۡوَلَٰيَةُ لِلَّهِ ٱلۡحَقِّۚ هُوَ خَيۡرٞ ثَوَابٗا وَخَيۡرٌ عُقۡبٗا ﴿٤٤﴾

៤៤-នៅថ្ងៃនោះ(ថ្ងៃបរលោក) សិទ្ធិអំណាចជាកម្មសិទ្ធិរបស់អល់ឡោះដ៏ពិតប្រាកដ ។ ទ្រង់ជាអ្នកផ្តល់ផលបុណ្យដ៏ប្រសើរ ហើយក៏ជាអ្នកតបស្នងដ៏ប្រសើរដែរ ។

وَٱضۡرِبۡ لَهُم مَّثَلَ ٱلۡحَيَوٰةِ ٱلدُّنۡيَا كَمَآءٍ أَنزَلۡنَٰهُ مِنَ ٱلسَّمَآءِ فَٱخۡتَلَطَ بِهِۦ نَبَاتُ ٱلۡأَرۡضِ فَأَصۡبَحَ هَشِيمٗا تَذۡرُوهُ ٱلرِّيَٰحُۗ وَكَانَ ٱللَّهُ عَلَىٰ كُلِّ شَيۡءٖ مُّقۡتَدِرًا ﴿٤٥﴾

៤៥-ហើយចូរអ្នក(មូហាំម៉ាត់) លើកជាឧទាហរណ៍ដល់ពួកគេ អំពីការរស់នៅក្នុងលោកិយនេះគឺប្រៀបដូចជាទឹកភ្លៀងដែលយើងបានបញ្ចុះពីលើមេឃ ហើយរុក្ខជាតិក៏បានដុះចេញមកចំរុះគ្នាដោយសារទឹកភ្លៀងនោះ ។ ក្រោយមកវាក៏បានប្រែក្លាយទៅជាស្ងួតដែលត្រូវខ្យល់បក់បោកវិនាសអន្តរាយទៅវិញ ។ ហើយអល់ឡោះមានអានុភាពទៅលើអ្វីៗទាំងអស់ ។

ٱلۡمَالُ وَٱلۡبَنُونَ زِينَةُ ٱلۡحَيَوٰةِ ٱلدُّنۡيَاۖ وَٱلۡبَٰقِيَٰتُ ٱلصَّٰلِحَٰتُ خَيۡرٌ عِندَ رَبِّكَ ثَوَابٗا وَخَيۡرٌ أَمَلٗا ﴿٤٦﴾

៤៦-ទ្រព្យសម្បត្តិនិងកូនចៅគឺជាគ្រឿងលំអនៃជីវិតលោកិយ ។ ប៉ុន្តែអំពើល្អដែលស្ថិតនៅជានិរន្តរ៍នោះគឺល្អប្រសើរចំពោះម្ចាស់របស់អ្នកក្នុងការផ្តល់ផលបុណ្យនិងក្តីសង្ឃឹមដ៏ល្អប្រពៃ ។

وَيَوۡمَ نُسَيِّرُ ٱلۡجِبَالَ وَتَرَى ٱلۡأَرۡضَ بَارِزَةٗ وَحَشَرۡنَٰهُمۡ فَلَمۡ نُغَادِرۡ مِنۡهُمۡ أَحَدٗا ﴿٤٧﴾

៤៧-ហើយនៅថ្ងៃដែលយើងធ្វើឱ្យភ្នំទាំងឡាយរសាត់(ដូចពពក) ហើយអ្នកនឹងឃើញផែនដីរាបស្មើ ហើយយើងនឹងប្រមូលពួកគេទាំងអស់ ដោយយើងមិនបន្សល់ទុកនរណាម្នាក់ឡើយ ។

وَعُرِضُواْ عَلَىٰ رَبِّكَ صَفّٗا لَّقَدۡ جِئۡتُمُونَا كَمَا خَلَقۡنَٰكُمۡ أَوَّلَ مَرَّةِۭۚ بَلۡ زَعَمۡتُمۡ أَلَّن نَّجۡعَلَ لَكُم مَّوۡعِدٗا ﴿٤٨﴾

៤៨-ពួកគេទាំងអស់ត្រូវបានបង្ហាញខ្លួនជាជួរៗនៅពីមុខម្ចាស់របស់អ្នក ។ ជាការពិតណាស់ពួកអ្នកបានមកជួបយើងដូចពេលដែលយើងបានបង្កើតពួកអ្នកជាលើកដំបូងដែរ ។ ប៉ុន្តែពួកអ្នកបានគិតថាយើងនឹងមិនកំណត់ពេលសម្រាប់ពួកអ្នកជួបនឹងយើងឡើយ ។

وَوُضِعَ ٱلۡكِتَٰبُ فَتَرَى ٱلۡمُجۡرِمِينَ مُشۡفِقِينَ مِمَّا فِيهِ وَيَقُولُونَ يَٰوَيۡلَتَنَا مَالِ هَٰذَا ٱلۡكِتَٰبِ لَا يُغَادِرُ صَغِيرَةٗ وَلَا كَبِيرَةً إِلَّآ

៤៩-ហើយសៀវភៅកំណត់ហេតុត្រូវបានគេដាក់(នៅដៃខាងស្តាំសម្រាប់អ្នកដែលមានជំនឿ និងដៃខាងឆ្វេងសម្រាប់អ្នកដែលគ្មានជំនឿ) ពេលនោះអ្នកនឹងឃើញពួកដែលប្រព្រឹត្តអំពើអាក្រក់មានការភ័យខ្លាចនូវអ្វីដែលមាននៅក្នុងកំណត់ហេតុនោះ ។ ហើយ

أَحۡصَىٰهَاۚ وَوَجَدُواْ مَا عَمِلُواْ حَاضِرٗاۗ وَلَا
يَظۡلِمُ رَبُّكَ أَحَدٗا (٤٩)

ពួកគេនឹងនិយាយថា: វិនាសអន្តរាយហើយពួកយើង! តើនេះជាសៀវភៅកំណត់ហេតុអ្វីទៅបានជាវាមិនបន្សល់ទុកសូម្បីតែអ្វីដែលតូចឬធំ ផុយទៅវិញវាបានកត់ត្រាទុកទាំងអស់ដូច្នេះ! ហើយពួកគេបានឃើញនៅចំពោះមុខនូវអ្វីដែលពួកគេបានប្រព្រឹត្ត ។ ហើយម្ចាស់របស់អ្នកមិនបំពានលើអ្នកណាម្នាក់ឡើយ ។

وَإِذۡ قُلۡنَا لِلۡمَلَٰٓئِكَةِ ٱسۡجُدُواْ لِأٓدَمَ فَسَجَدُوٓاْ
إِلَّآ إِبۡلِيسَ كَانَ مِنَ ٱلۡجِنِّ فَفَسَقَ عَنۡ أَمۡرِ
رَبِّهِۦٓۗ أَفَتَتَّخِذُونَهُۥ وَذُرِّيَّتَهُۥٓ أَوۡلِيَآءَ مِن دُونِي
وَهُمۡ لَكُمۡ عَدُوُّۢۚ بِئۡسَ لِلظَّٰلِمِينَ بَدَلٗا (٥٠)

៥០-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានមានបន្ទូលទៅកាន់ម៉ាឡាអ៊ីកាត់ថា: "ចូរពួកអ្នកស៊ូជូតចំពោះអាដាំ" ពេលនោះពួកគេបានស៊ូជូត លើកលែងតែអ៊ីព្លីសប៉ុណ្ណោះដែលស្ថិតក្នុងចំណោមពួកជិន ដែលវាបានល្មើសនឹងបទបញ្ជានៃម្ចាស់របស់វា ។ តើពួកអ្នកយកវានិងកូនចៅរបស់វាធ្វើជាអ្នកគាំពារក្រៅពីយើង ខណៈដែលពួកវាជាសត្រូវចំពោះពួកអ្នកឬ? ហើយពួកបំពានដែលគោរពស្ទៃតនជំនួសយើងនោះគឺអាក្រក់បំផុត ។

۞ مَّآ أَشۡهَدتُّهُمۡ خَلۡقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَلَا
خَلۡقَ أَنفُسِهِمۡ وَمَا كُنتُ مُتَّخِذَ ٱلۡمُضِلِّينَ
عَضُدٗا (٥١)

៥១-យើងមិនបានយកពួកវាមកធ្វើជាសាក្សីនៃការបង្កើតមេឃជាច្រើនជាន់និងផែនដី ហើយនិងការបង្កើតពួកគេផ្ទាល់នោះឡើយ ។ ហើយយើងក៏មិនបានយកពួកដែលវង្វេងធ្វើជាអ្នកជួយដែរ ។

وَيَوۡمَ يَقُولُ نَادُواْ شُرَكَآءِيَ ٱلَّذِينَ زَعَمۡتُمۡ
فَدَعَوۡهُمۡ فَلَمۡ يَسۡتَجِيبُواْ لَهُمۡ وَجَعَلۡنَا بَيۡنَهُم
مَّوۡبِقٗا (٥٢)

៥២-ហើយ(ចូរចងចាំ)នៅថ្ងៃដែលទ្រង់នឹងមានបន្ទូលថា: ចូរពួកអ្នកហៅមកនូវបណ្ដាដៃគូរបស់យើងដែលពួកអ្នកបានអះអាង(ថាជាព្រះ)កន្លងមកនោះ ។ ពេលនោះ ពួកគេក៏បានហៅពួកវា ប៉ុន្ដែពួកវាមិនបានឆ្លើយតបចំពោះពួកគេឡើយ ។ ហើយយើងបានបង្កើតកន្លែងអន្ដរាយមួយ(ក្នុងនរកដើហាន់ណាំ)រវាងពួកគេ(ពួកគោរពព្រះនានា និងព្រះនានា) ។

وَرَءَا ٱلۡمُجۡرِمُونَ ٱلنَّارَ فَظَنُّوٓاْ أَنَّهُم مُّوَاقِعُوهَا
وَلَمۡ يَجِدُواْ عَنۡهَا مَصۡرِفٗا (٥٣)

៥៣-ហើយ(នៅពេលដែល)ពួកប្រព្រឹត្តអំពើអាក្រក់បានឃើញភ្លើងនរក ពួកគេដឹងច្បាស់ថា: ពិតប្រាកដណាស់ ពួកគេនឹងធ្លាក់ទៅក្នុងនោះ ហើយពួកគេនឹងមិនអាចរកផ្លូវគេចចេញពីវាបានឡើយ ។

وَلَقَدۡ صَرَّفۡنَا فِي هَٰذَا ٱلۡقُرۡءَانِ لِلنَّاسِ مِن
كُلِّ مَثَلٖۚ وَكَانَ ٱلۡإِنسَٰنُ أَكۡثَرَ شَيۡءٖ

៥៤-ហើយជាការពិតណាស់ យើងបានបញ្ជាក់យ៉ាងច្បាស់នូវគ្រប់ឧទាហរណ៍សម្រាប់មនុស្សលោកនៅក្នុងគម្ពីរគួរអាននេះ ។ ក៏ប៉ុន្ដែមនុស្សលោកវិញទេ ដែលជជែកដេញដោលគ្នាជាងអ្វីៗទាំង

អស់នោះ ។

៥៥-ហើយគ្មានអ្វីដែលអាចហាមឃាត់មនុស្សលោកមិនឱ្យពួកគេមានជំនឿនៅពេលដែលការចង្អុលបង្ហាញ(គម្ពីរគួរអាន)បានមកដល់ពួកគេ និងហាមឃាត់មិនឱ្យពួកគេសុំអភ័យទោសពីម្ចាស់របស់ពួកគេក្រៅពីមាគ៌ា(ភាពវិនាសកម្ម)របស់ពួកជំនាន់មុនមកដល់ពួកគេ ឬក៏ទារុណកម្មមកដល់ពួកគេចំពោះមុខនោះឡើយ ។

៥៦-ហើយយើងមិនបានបញ្ជូនអ្នកនាំសារមកក្រៅពីធ្វើជាអ្នកផ្តល់ដំណឹងរីករាយ និងជាអ្នកដាស់តឿនព្រមាន(ដល់មនុស្សលោក)នោះឡើយ ។ តែពួកដែលបានប្រឆាំងជជែកដេញដោលគ្នានឹងប្រការមិនត្រឹមត្រូវ ដើម្បីបំបាត់នូវប្រការត្រឹមត្រូវដោយពួកគេបានយកបណ្តាភស្តុតាងរបស់យើង និងអ្វីដែលត្រូវបានព្រមានពួកគេនោះមកលេងសើចចំអកឡកឡឺយទៅវិញ ។

៥៧-ហើយតើមាននរណាដែលបំពានជាងអ្នកដែលត្រូវបានគេរំលឹកនូវភស្តុតាងៗនៃម្ចាស់របស់គេ ហើយគេបែរជាងាកចេញពីវា ព្រមទាំងបានភ្លេចនូវអ្វីដែលគេបានប្រព្រឹត្តកន្លងមកនោះ? ពិតប្រាកដណាស់ យើងបានដាក់គំរបលើចិត្តរបស់ពួកគេ ដើម្បីកុំឱ្យពួកគេយល់ដឹងពីវា(គម្ពីរគួរអាន)និងធ្វើឱ្យត្រចៀករបស់ពួកគេថ្លង់ ។ ហើយប្រសិនបើអ្នកអំពាវនាវពួកគេឱ្យទៅរកការចង្អុលបង្ហាញ មែននោះពួកគេនឹងមិនទទួលបានការចង្អុលបង្ហាញជាដាច់ខាត ។

៥៨-ហើយម្ចាស់របស់អ្នក គឺមហាអភ័យទោស មានក្តីមេត្តាករុណា ។ ប្រសិនបើទ្រង់យកទោសពៃរ៍ពួកគេនូវអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមកនោះ ទ្រង់ពិតជាធ្វើទារុណកម្មពួកគេភ្លាមៗជាមិនខាន ។ ប៉ុន្តែសម្រាប់ពួកគេ គឺមានពេលកំណត់(ក្នុងការធ្វើទារុណ-កម្ម)ដោយពួកគេនឹងមិនអាចគេចវេះពីវាបានជាដាច់ខាត ។

៥៩-ហើយអ្នកភូមិស្រុក(របស់ហ៊ូទ សឡេះ លូត និងស្ហ៊ូអែប)ទាំងនោះយើងបានបំផ្លាញពួកគេនៅពេលដែលពួកគេបានបំពាន ហើយយើងបានកំណត់ពេលជាក់លាក់មួយចំពោះភាពអន្តរាយរបស់ពួកគេ ។

جَدَلاً ﴿٥٤﴾

وَمَا مَنَعَ ٱلنَّاسَ أَن يُؤْمِنُوٓاْ إِذْ جَآءَهُمُ
ٱلْهُدَىٰ وَيَسْتَغْفِرُواْ رَبَّهُمْ إِلَّآ أَن تَأْتِيَهُمْ سُنَّةُ
ٱلْأَوَّلِينَ أَوْ يَأْتِيَهُمُ ٱلْعَذَابُ قُبُلاً ﴿٥٥﴾

وَمَا نُرْسِلُ ٱلْمُرْسَلِينَ إِلَّا مُبَشِّرِينَ وَمُنذِرِينَ ۚ
وَيُجَـٰدِلُ ٱلَّذِينَ كَفَرُواْ بِٱلْبَـٰطِلِ لِيُدْحِضُواْ
بِهِ ٱلْحَقَّ ۖ وَٱتَّخَذُوٓاْ ءَايَـٰتِى وَمَآ أُنذِرُواْ
هُزُوًا ﴿٥٦﴾

وَمَنْ أَظْلَمُ مِمَّن ذُكِّرَ بِـَٔايَـٰتِ رَبِّهِۦ فَأَعْرَضَ
عَنْهَا وَنَسِىَ مَا قَدَّمَتْ يَدَاهُ ۚ إِنَّا جَعَلْنَا عَلَىٰ
قُلُوبِهِمْ أَكِنَّةً أَن يَفْقَهُوهُ وَفِىٓ ءَاذَانِهِمْ
وَقْرًا ۖ وَإِن تَدْعُهُمْ إِلَى ٱلْهُدَىٰ فَلَن يَهْتَدُوٓاْ
إِذًا أَبَدًا ﴿٥٧﴾

وَرَبُّكَ ٱلْغَفُورُ ذُو ٱلرَّحْمَةِ ۖ لَوْ يُؤَاخِذُهُم
بِمَا كَسَبُواْ لَعَجَّلَ لَهُمُ ٱلْعَذَابَ ۚ بَل لَّهُم
مَّوْعِدٌ لَّن يَجِدُواْ مِن دُونِهِۦ مَوْئِلاً ﴿٥٨﴾

وَتِلْكَ ٱلْقُرَىٰٓ أَهْلَكْنَـٰهُمْ لَمَّا ظَلَمُواْ
وَجَعَلْنَا لِمَهْلِكِهِم مَّوْعِدًا ﴿٥٩﴾

وَإِذۡ قَالَ مُوسَىٰ لِفَتَىٰهُ لَآ أَبۡرَحُ حَتَّىٰٓ
أَبۡلُغَ مَجۡمَعَ ٱلۡبَحۡرَيۡنِ أَوۡ أَمۡضِيَ حُقُبٗا ٦٠

៦០-ហើយ(ចូរចងចាំ) នៅពេលដែលមូសាបានពោលទៅកាន់ក្មេងបម្រើប្រុសរបស់គាត់ថាៈ ខ្ញុំនឹងមិនឈប់ធ្វើដំណើរឡើយ រហូតទាល់តែខ្ញុំបានទៅដល់ចំណុចប្រសព្វនៃសមុទ្រទាំងពីរ ឬក៏ខ្ញុំត្រូវធ្វើដំណើរអស់រយៈពេលយូរប៉ុណ្ណាក៏ដោយ(ក៏ខ្ញុំមិនឈប់ដែរ)។

فَلَمَّا بَلَغَا مَجۡمَعَ بَيۡنِهِمَا نَسِيَا حُوتَهُمَا
فَٱتَّخَذَ سَبِيلَهُۥ فِي ٱلۡبَحۡرِ سَرَبٗا ٦١

៦១-ហើយនៅពេលដែលគេទាំងពីរបានទៅដល់ចំណុចប្រសព្វនៃសមុទ្រទាំងពីរ គេទាំងពីរបានភ្លេចត្រីរបស់គេពេលនោះវាក៏បាននទៀលតាមរូងចូលទៅក្នុងសមុទ្រ។

فَلَمَّا جَاوَزَا قَالَ لِفَتَىٰهُ ءَاتِنَا غَدَآءَنَا لَقَدۡ
لَقِينَا مِن سَفَرِنَا هَٰذَا نَصَبٗا ٦٢

៦២-ហើយនៅពេលដែលគេទាំងពីរបានធ្វើដំណើរហួស(ចំណុចប្រសព្វនោះ) គាត់(មូសា)បានពោលទៅកាន់ក្មេងបម្រើរបស់គាត់ថាៈ ចូរអ្នកយកអាហារថ្ងៃត្រង់មកឱ្យយើង។ ជាការពិតណាស់ យើងមានការនឿយហត់ក្នុងការធ្វើដំណើររបស់យើងនេះហើយ។

قَالَ أَرَءَيۡتَ إِذۡ أَوَيۡنَآ إِلَى ٱلصَّخۡرَةِ فَإِنِّي
نَسِيتُ ٱلۡحُوتَ وَمَآ أَنسَىٰنِيهُ إِلَّا ٱلشَّيۡطَٰنُ أَنۡ
أَذۡكُرَهُۥۚ وَٱتَّخَذَ سَبِيلَهُۥ فِي ٱلۡبَحۡرِ عَجَبٗا ٦٣

៦៣-ក្មេងបម្រើនោះបានតបវិញថាៈ តើអ្នកនឹកឃើញឬទេ នៅពេលដែលពួកយើងបានសម្រាកនៅក្បែរថ្មធំថ្មនោះ? ពិតប្រាកដណាស់ ខ្ញុំបានភ្លេចត្រីនោះ ហើយគ្មាននរណាម្នាក់ធ្វើឱ្យខ្ញុំភ្លេចរំលឹកវា(ប្រាប់អ្នក)ក្រៅពីស្ហៃតននោះឡើយ។ ហើយវាបាននទៀលចូលទៅក្នុងសមុទ្រយ៉ាងចម្លែក។

قَالَ ذَٰلِكَ مَا كُنَّا نَبۡغِۚ فَٱرۡتَدَّا عَلَىٰٓ
ءَاثَارِهِمَا قَصَصٗا ٦٤

៦៤-គាត់(មូសា)បានឆ្លើយថាៈ ទីនោះហើយដែលយើងកំពុងតែស្វែងរក។ រួចពួកគេទាំងពីរបានត្រឡប់ក្រោយទៅតាមដានជើងរបស់ពួកគេវិញ។

فَوَجَدَا عَبۡدٗا مِّنۡ عِبَادِنَآ ءَاتَيۡنَٰهُ رَحۡمَةٗ مِّنۡ
عِندِنَا وَعَلَّمۡنَٰهُ مِن لَّدُنَّا عِلۡمٗا ٦٥

៦៥-បន្ទាប់មកពួកគេទាំងពីរ(មូសានិងក្មេងបម្រើ)ក៏បានជួបខ្ញុំរបស់យើងម្នាក់(ខទៀរ)នៃខ្ញុំទាំងអស់របស់យើងដែលយើងបានផ្ដល់ឱ្យគេនូវក្ដីមេត្តាករុណាពីយើង និងបានបង្រៀនគេនូវចំណេះដឹងពីយើង។

قَالَ لَهُۥ مُوسَىٰ هَلۡ أَتَّبِعُكَ عَلَىٰٓ أَن تُعَلِّمَنِ
مِمَّا عُلِّمۡتَ رُشۡدٗا ٦٦

៦៦-គាត់(មូសា)បានពោលទៅកាន់គេ(ខទៀរ)ថាៈ តើអ្នកអនុញ្ញាតឱ្យខ្ញុំតាមអ្នក ដើម្បីឱ្យអ្នកបង្រៀនខ្ញុំនូវអ្វីដែលគេ(អល់ឡោះ)បានបង្រៀនអ្នកនូវចំណេះដឹងដ៏ត្រឹមត្រូវបានទេ?

قَالَ إِنَّكَ لَن تَسۡتَطِيعَ مَعِيَ صَبۡرٗا ٦٧

៦៧-គាត់(ខទៀរ)បានតបថាៈ ពិតប្រាកដណាស់ អ្នកនឹងមិនអាចអត់ធ្មត់ជាមួយខ្ញុំបានទេ។

وَكَيۡفَ تَصۡبِرُ عَلَىٰ مَا لَمۡ تُحِطۡ بِهِۦ خُبۡرٗا ﴿٦٨﴾

៦៨-តើអ្នកអាចអត់ធ្មត់ទៅលើអ្វីដែលអ្នកមិនបានដឹងយ៉ាងដូចម្ដេចទៅ?

قَالَ سَتَجِدُنِيٓ إِن شَآءَ ٱللَّهُ صَابِرٗا وَلَآ أَعۡصِي لَكَ أَمۡرٗا ﴿٦٩﴾

៦៩-គាត់(មូសា)បានតបវិញថាៈ អ៊ិនស្ហាអល់ឡោះ(ប្រសិនបើអល់ឡោះមានចេតនា) អ្នកនឹងឃើញខ្ញុំជាអ្នកអត់ធ្មត់ម្នាក់ ហើយខ្ញុំនឹងមិនធ្វើខុសនឹងបទបញ្ជារបស់អ្នកឡើយ ។

قَالَ فَإِنِ ٱتَّبَعۡتَنِي فَلَا تَسۡـَٔلۡنِي عَن شَيۡءٍ حَتَّىٰٓ أُحۡدِثَ لَكَ مِنۡهُ ذِكۡرٗا ﴿٧٠﴾

៧០-គាត់(ខទៀរ)បានពោលថាៈ ដូច្នេះ ប្រសិនបើអ្នកតាមខ្ញុំ សូមអ្នកកុំសួរខ្ញុំអំពីអ្វីឱ្យសោះ លុះត្រាតែខ្ញុំបញ្ជាក់ប្រាប់អ្នកអំពីវា ។

فَٱنطَلَقَا حَتَّىٰٓ إِذَا رَكِبَا فِي ٱلسَّفِينَةِ خَرَقَهَاۖ قَالَ أَخَرَقۡتَهَا لِتُغۡرِقَ أَهۡلَهَا لَقَدۡ جِئۡتَ شَيۡـًٔا إِمۡرٗا ﴿٧١﴾

៧១-ហើយពួកគាត់ទាំងពីរបានធ្វើដំណើររហូតនៅពេលដែលគាត់ទាំងពីរបានជិះសំពៅ គាត់(ខទៀរ)ក៏បានទំលុះសំពៅនោះ ។ គាត់(មូសា)បានពោលថាៈ "តើអ្នកចោះទំលុះវាដើម្បីឱ្យអ្នកដែលនៅលើសំពៅនេះលិចលង់ឬ? ជាកាពិតណាស់ អ្នកបានធ្វើនូវអំពើមួយដែលអាក្រក់ ។

قَالَ أَلَمۡ أَقُلۡ إِنَّكَ لَن تَسۡتَطِيعَ مَعِيَ صَبۡرٗا ﴿٧٢﴾

៧២-គាត់(ខទៀរ)បានពោលថាៈ តើខ្ញុំមិនបានប្រាប់អ្នកទេឬថា ពិតប្រាកដណាស់ អ្នកនឹងមិនអាចអត់ធ្មត់ជាមួយខ្ញុំបាននោះ?

قَالَ لَا تُؤَاخِذۡنِي بِمَا نَسِيتُ وَلَا تُرۡهِقۡنِي مِنۡ أَمۡرِي عُسۡرٗا ﴿٧٣﴾

៧៣-គាត់(មូសា)បានពោលថាៈ សូមអ្នកកុំយកទោសពៃរ៍ខ្ញុំនូវអ្វីដែលខ្ញុំបានភ្លេច ហើយសូមកុំធ្វើឱ្យខ្ញុំលំបាកព្រោះតែកិច្ចការរបស់ខ្ញុំអ្វី ។

فَٱنطَلَقَا حَتَّىٰٓ إِذَا لَقِيَا غُلَٰمٗا فَقَتَلَهُۥ قَالَ أَقَتَلۡتَ نَفۡسٗا زَكِيَّةَۢ بِغَيۡرِ نَفۡسٖ لَّقَدۡ جِئۡتَ شَيۡـٔٗا نُّكۡرٗا ﴿٧٤﴾

៧៤-ហើយពួកគាត់ទាំងពីរបានធ្វើដំណើររហូតដល់ពេលគាត់ទាំងពីរបានជួបក្មេងប្រុសម្នាក់ ។ ពេលនោះគាត់(ខទៀរ)បានសម្លាប់ក្មេងនោះ ។ គាត់(មូសា)បានពោលថាៈ តើអ្នកសម្លាប់ជីវិតមនុស្សដែលស្អាតស្អំដែលគេមិនបានសម្លាប់អ្នកណាម្នាក់នោះឬ? ជាការពិតណាស់ អ្នកបានធ្វើអំពើមួយដែលអាក្រក់ ។

۞ قَالَ أَلَمۡ أَقُل لَّكَ إِنَّكَ لَن تَسۡتَطِيعَ مَعِيَ صَبۡرٗا ﴿٧٥﴾

៧៥-គាត់(ខទៀរ)បានពោលថាៈ តើខ្ញុំមិនបានប្រាប់អ្នកទេឬថា ពិតប្រាកដណាស់ អ្នកនឹងមិនអាចអត់ធ្មត់ជាមួយខ្ញុំបាននោះ?

قَالَ إِن سَأَلۡتُكَ عَن شَيۡءِۭ بَعۡدَهَا فَلَا

៧៦-គាត់(មូសា)បានពោលថាៈ ប្រសិនបើខ្ញុំសួរអ្វីបន្ទាប់ពីនេះ អ្នកមិនបាច់យកខ្ញុំធ្វើជាដៃគូទៀតទេ ។ ជាការពិតណាស់អ្នកបាន

تُصَٰحِبۡنِيۖ قَدۡ بَلَغۡتَ مِن لَّدُنِّي عُذۡرٗا ٧٦
فَٱنطَلَقَا حَتَّىٰٓ إِذَآ أَتَيَآ أَهۡلَ قَرۡيَةٍ ٱسۡتَطۡعَمَآ
أَهۡلَهَا فَأَبَوۡاْ أَن يُضَيِّفُوهُمَا فَوَجَدَا فِيهَا
جِدَارٗا يُرِيدُ أَن يَنقَضَّ فَأَقَامَهُۥۖ قَالَ لَوۡ
شِئۡتَ لَتَّخَذۡتَ عَلَيۡهِ أَجۡرٗا ٧٧

قَالَ هَٰذَا فِرَاقُ بَيۡنِي وَبَيۡنِكَۚ سَأُنَبِّئُكَ
بِتَأۡوِيلِ مَا لَمۡ تَسۡتَطِع عَّلَيۡهِ صَبۡرًا ٧٨

أَمَّا ٱلسَّفِينَةُ فَكَانَتۡ لِمَسَٰكِينَ يَعۡمَلُونَ فِي
ٱلۡبَحۡرِ فَأَرَدتُّ أَنۡ أَعِيبَهَا وَكَانَ وَرَآءَهُم مَّلِكٞ
يَأۡخُذُ كُلَّ سَفِينَةٍ غَصۡبٗا ٧٩

وَأَمَّا ٱلۡغُلَٰمُ فَكَانَ أَبَوَاهُ مُؤۡمِنَيۡنِ فَخَشِينَآ أَن
يُرۡهِقَهُمَا طُغۡيَٰنٗا وَكُفۡرٗا ٨٠

فَأَرَدۡنَآ أَن يُبۡدِلَهُمَا رَبُّهُمَا خَيۡرٗا مِّنۡهُ زَكَوٰةٗ
وَأَقۡرَبَ رُحۡمٗا ٨١

وَأَمَّا ٱلۡجِدَارُ فَكَانَ لِغُلَٰمَيۡنِ يَتِيمَيۡنِ فِي
ٱلۡمَدِينَةِ وَكَانَ تَحۡتَهُۥ كَنزٞ لَّهُمَا وَكَانَ
أَبُوهُمَا صَٰلِحٗا فَأَرَادَ رَبُّكَ أَن يَبۡلُغَآ
أَشُدَّهُمَا وَيَسۡتَخۡرِجَا كَنزَهُمَا رَحۡمَةٗ مِّن
رَّبِّكَۚ وَمَا فَعَلۡتُهُۥ عَنۡ أَمۡرِيۚ ذَٰلِكَ تَأۡوِيلُ مَا

អភ័យទោសដល់ខ្ញុំច្រើនលើកទៅហើយ ។

៧៧-ហើយពួកគាត់ទាំងពីរ(ខេទ្បិរ និងមូសា)បានបន្តដំណើរ រហូតទៅដល់ទីប្រជុំជននៃភូមិមួយ ពួកគាត់ទាំងពីរបានសុំចំណី អាហារពីអ្នកភូមិនោះ តែពួកគេបានបដិសេធមិនទទួលពួកគាត់ ទាំងពីរជាភ្ញៀវឡើយ ។ បន្ទាប់មកពួកគាត់ទាំងពីរបានឃើញ ជញ្ជាំងមួយនៅក្នុងភូមិនោះជិតរលំ គាត់(ខេទ្បិរ)ក៏បានធ្វើឱ្យវា ត្រង់ឡើងវិញ ។ គាត់(មូសា)បានពោលថាៈ ប្រសិនបើអ្នកចង់ធ្វើ ដូច្នេះ អ្នកអាចយកថ្លៃឈ្នួលពីការងារនេះ ។

៧៨-គាត់(ខេទ្បិរ)បានពោលថាៈ នេះគឺជាការបែកគ្នារវាងខ្ញុំ និងអ្នក ។ ខ្ញុំនឹងបកស្រាយប្រាប់អ្នកនូវអ្វីដែលអ្នកមិនអាចអត់ធ្មត់ នឹងវាបាននោះ ។

៧៩-ចំពោះរឿងសំពៅនោះ វាជាកម្មសិទ្ធិរបស់អ្នកក្រីក្រ ដែល ប្រកបមុខរបរនៅលើផ្ទៃសមុទ្រ ហើយខ្ញុំបានធ្វើឱ្យវាធ្លុះធ្លាយ ដោយសារតែនៅខាងមុខមានស្តេចមួយអង្គនឹងរឹបអូសយកសំពៅ (ណាដែលល្អ) ។

៨០-ចំណែកឯក្មេងប្រុសនោះ ឪពុកម្តាយរបស់គេជាអ្នកដែល មានជំនឿ ហើយយើងខ្លាចគេអូសទាញឪពុកម្តាយរបស់គេឱ្យធ្លាក់ ទៅក្នុងភាពវង្វេងនិងភាពគ្មានជំនឿ ។

៨១-ហើយខ្ញុំចង់ឱ្យម្ចាស់(អល់ឡោះ)របស់គេទាំងពីរផ្លាស់ប្តូរ (ដោយបង្កើត)កូនម្នាក់ផ្សេងទៀតដែលល្អបរិសុទ្ធ និងគួរឱ្យ ស្រឡាញ់ជាងកូនដែលបានស្លាប់ទៅទៀត ។

៨២-ចំណែកឯជញ្ជាំងវិញ វាជាកម្មសិទ្ធិរបស់ក្មេងប្រុសកំព្រា ពីរនាក់នៅក្នុងទីក្រុងនោះ ។ ហើយនៅពីក្រោមវាមានកំណប់ទ្រព្យ របស់ពួកគេទាំងពីរ ។ ហើយឪពុករបស់គេទាំងពីរជាមនុស្សល្អត្រឹម ត្រូវ ។ ហើយម្ចាស់របស់អ្នកមានបំណងឱ្យគេទាំងពីរធំពេញវ័យនិង ឱ្យគេទាំងពីរយកកំណប់ទ្រព្យរបស់ពួកគេទាំងពីរចេញដោយក្តី មេត្តាករុណាពីម្ចាស់របស់អ្នក ។ ហើយខ្ញុំមិនបានធ្វើវាតាមតែអំពើ ចិត្តរបស់ខ្ញុំនោះឡើយ ។ នោះហើយគឺជាការបកស្រាយចំពោះអ្វី

لَمْ تَسْتَطِع عَّلَيْهِ صَبْرًا ٨٢

ដែលអ្នកមិនអាចអត់ធ្មត់បាននោះ។

وَيَسْـَٔلُونَكَ عَن ذِى ٱلْقَرْنَيْنِ ۖ قُلْ سَأَتْلُوا۟ عَلَيْكُم مِّنْهُ ذِكْرًا ٨٣

៨៣-ហើយពួកគេនឹងសួរអ្នក(មូហាំម៉ាត់) អំពីហ្ស៊ុលករណៃ។ ចូរអ្នកពោលថាៈ ខ្ញុំនឹងនិទានរឿងរបស់គេប្រាប់ពួកអ្នក។

إِنَّا مَكَّنَّا لَهُۥ فِى ٱلْأَرْضِ وَءَاتَيْنَٰهُ مِن كُلِّ شَىْءٍ سَبَبًا ٨٤

៨៤-ពិតប្រាកដណាស់ យើង(អល់ឡោះ) បានផ្តល់សិទ្ធិអំណាចដល់គេនៅលើផែនដីនេះ ហើយយើងបានផ្តល់ឱ្យគេនូវមាគ៌ាគ្រប់បែបយ៉ាង។

فَأَتْبَعَ سَبَبًا ٨٥

៨៥-ហើយគេក៏បានដើរតាមមាគ៌ាមួយ។

حَتَّىٰٓ إِذَا بَلَغَ مَغْرِبَ ٱلشَّمْسِ وَجَدَهَا تَغْرُبُ فِى عَيْنٍ حَمِئَةٍ وَوَجَدَ عِندَهَا قَوْمًا ۗ قُلْنَا يَٰذَا ٱلْقَرْنَيْنِ إِمَّآ أَن تُعَذِّبَ وَإِمَّآ أَن تَتَّخِذَ فِيهِمْ حُسْنًا ٨٦

៨៦-លុះដល់ពេលគេបានទៅដល់កន្លែងនៃថ្ងៃលិច គេបានឃើញវាលិចនៅក្នុងប្រភពទឹកភក់ខ្មៅ ហើយគេបានឃើញមនុស្សមួយក្រុម(ពួកគ្មានជំនឿ)នៅទីនោះ។ ហើយយើងបានមានបន្ទូលថាៈ ឱហ្ស៊ុលករណៃ! អ្នកអាចធ្វើបាបពួកគេបាន(ប្រសិនបើពួកគេមិនទទួលស្គាល់ថាអល់ឡោះមានតែមួយគត់) ឬក៏អ្នកអាចធ្វើល្អចំពោះពួកគេ(ដោយអំពាវនាវពួកគេឱ្យគោរពប្រតិបត្តិតាមអល់ឡោះ)។

قَالَ أَمَّا مَن ظَلَمَ فَسَوْفَ نُعَذِّبُهُۥ ثُمَّ يُرَدُّ إِلَىٰ رَبِّهِۦ فَيُعَذِّبُهُۥ عَذَابًا نُّكْرًا ٨٧

៨៧-គេ(ហ្ស៊ុលករណៃ) បាននិយាយថាៈ ចំពោះអ្នកណាដែលបានបំពាន គឺយើងនឹងធ្វើទារុណកម្មអ្នកនោះ។ បន្ទាប់មកអ្នកនោះត្រូវគេឱ្យវិលត្រឡប់ទៅកាន់ម្ចាស់របស់គេវិញ។ ពេលនោះទ្រង់នឹងធ្វើទារុណកម្មគេនូវទារុណកម្មមួយយ៉ាងធ្ងន់ធ្ងរបំផុត។

وَأَمَّا مَنْ ءَامَنَ وَعَمِلَ صَٰلِحًا فَلَهُۥ جَزَآءً ٱلْحُسْنَىٰ ۖ وَسَنَقُولُ لَهُۥ مِنْ أَمْرِنَا يُسْرًا ٨٨

៨៨-ហើយចំណែកឯអ្នកណាដែលបានជឿ និងបានសាងអំពើល្អវិញនោះ គេនឹងទទួលបានផលបុណ្យដ៏ប្រសើរ(ឋានសួគ៌)ជាមិនខាន។ ហើយយើង(ហ្ស៊ុលករណៃ)នឹងនិយាយទៅកាន់គេ(អ្នកមានជំនឿ)នូវពាក្យសំដីទន់ភ្លន់បំផុត។

ثُمَّ أَتْبَعَ سَبَبًا ٨٩

៨៩-បន្ទាប់មកគេក៏បានដើរតាមមាគ៌ាមួយទៀត។

حَتَّىٰٓ إِذَا بَلَغَ مَطْلِعَ ٱلشَّمْسِ وَجَدَهَا تَطْلُعُ عَلَىٰ قَوْمٍ لَّمْ نَجْعَل لَّهُم مِّن دُونِهَا سِتْرًا ٩٠

៩០-លុះដល់ពេលគេបានទៅដល់កន្លែងថ្ងៃរះ គេបានឃើញវារះទៅលើក្រុមមនុស្សដែលយើង(អល់ឡោះ)មិនបានផ្តល់ជម្រកដល់ពួកគេដើម្បីការពារកំដៅព្រះអាទិត្យឡើយ។

كَذَٰلِكَ وَقَدْ أَحَطْنَا بِمَا لَدَيْهِ خُبْرًا ٩١

៩១-ដូច្នោះហើយ យើង(អល់ឡោះ)ពិតជាបានដឹងនូវអ្វីៗអំពី

គេ(ហ៊ុលករណៃ)។

៩២-បន្ទាប់មកគេបានដើរតាមមាគ៌ាផ្សេងទៀត។

៩៣-រហូតទៅពេលដែលគេបានទៅដល់ចន្លោះភ្នំទាំងពីរគេបានឃើញមនុស្សមួយក្រុមនៅពីមុខភ្នំទាំងពីរនោះ ដែលពួកគេស្ទើរតែមិនយល់នូវពាក្យសំដី(ដែលហ៊ុលករណៃនិយាយ)នោះឡើយ។

៩៤-ពួកគេបាននិយាយថា: ឱហ៊ុលករណៃ! ពិតប្រាកដណាស់យ៉ាក់ជូចនិងម៉ាក់ជូច គឺជាពួកបង្កវិនាសកម្មនៅលើផែនដី។ តើពួកយើងអាចផ្តល់ថ្លៃឈ្នួលឱ្យអ្នក ដើម្បីឱ្យអ្នកសាងសង់របាំងការពាររវាងពួកយើងនិងពួកគេបានដែរឬទេ?

៩៥-គាត់(ហ៊ុលករណៃ)បានតបថា: អ្វី(ទ្រព្យសម្បត្តិសិទ្ធិអំណាច)ដែលម្ចាស់របស់ខ្ញុំបានប្រទានឱ្យខ្ញុំគឺវាប្រសើរជាង(ទ្រព្យសម្បត្តិរបស់អ្នក)។ ដូច្នេះ សូមពួកអ្នកជួយខ្ញុំជាកម្លាំង ខ្ញុំនឹងកសាងរបាំងការពាររវាងពួកអ្នកនិងពួកគេ។

៩៦-សូមពួកអ្នកយកដែកមួយបន្ទះៗឱ្យខ្ញុំ។ (គាត់បានដាក់ដែកនោះ)រហូតទាល់តែវាពេញនៃចន្លោះភ្នំទាំងពីរ។ គាត់បាននិយាយថា: ចូរពួកអ្នកផ្លុំ(ភ្លើងដុតដែក)ចុះ រហូតទាល់តែដែកទាំងនោះ(ក្រហម)ក្លាយទៅជាភ្លើង គាត់បាននិយាយថា: ចូរអ្នកទាំងអស់គ្នាយកទង់ដែងរលាយមកឱ្យខ្ញុំ ខ្ញុំនឹងចាក់ពីលើវា។

៩៧-ធ្វើដូច្នោះពួកគេ(យ៉ាក់ជូចនិងម៉ាក់ជូច)មិនអាចឡើងឆ្លងជញ្ជាំងដែក និងមិនអាចចោះទំលុះវាបានឡើយ។

៩៨-គាត់(ហ៊ុលករណៃ)បាននិយាយថា: នេះគឺជាក្តីមេត្តាករុណាពីម្ចាស់របស់ខ្ញុំ។ តែនៅពេលដែលការសន្យានៃម្ចាស់របស់ខ្ញុំបានមកដល់ ទ្រង់នឹងធ្វើឱ្យវា(ជញ្ជាំងដែក)រាបស្មើដល់ដីវិញ។ ហើយការសន្យានៃម្ចាស់របស់ខ្ញុំគឺជាការពិត។

៩៩-ហើយយើងបានព្រលែងពួកវា(យ៉ាក់ជូចនិងម៉ាក់ជូច)ចោលនៅថ្ងៃនោះ(ថ្ងៃដែលកិច្ចសន្យារបស់យើងបានមកដល់) ដោយពួកវាពពាក់ពពូនគ្នា។ បន្ទាប់មកគេបានផ្លុំត្រែ ហើយយើង

ثُمَّ أَتْبَعَ سَبَبًا ﴿٩٢﴾

حَتَّىٰٓ إِذَا بَلَغَ بَيْنَ ٱلسَّدَّيْنِ وَجَدَ مِن
دُونِهِمَا قَوْمًا لَّا يَكَادُونَ يَفْقَهُونَ قَوْلًا ﴿٩٣﴾

قَالُواْ يَٰذَا ٱلْقَرْنَيْنِ إِنَّ يَأْجُوجَ وَمَأْجُوجَ
مُفْسِدُونَ فِى ٱلْأَرْضِ فَهَلْ نَجْعَلُ لَكَ خَرْجًا
عَلَىٰٓ أَن تَجْعَلَ بَيْنَنَا وَبَيْنَهُمْ سَدًّا ﴿٩٤﴾

قَالَ مَا مَكَّنِّى فِيهِ رَبِّى خَيْرٌ فَأَعِينُونِى بِقُوَّةٍ
أَجْعَلْ بَيْنَكُمْ وَبَيْنَهُمْ رَدْمًا ﴿٩٥﴾

ءَاتُونِى زُبَرَ ٱلْحَدِيدِ ۖ حَتَّىٰٓ إِذَا سَاوَىٰ بَيْنَ
ٱلصَّدَفَيْنِ قَالَ ٱنفُخُواْ ۖ حَتَّىٰٓ إِذَا جَعَلَهُۥ نَارًا
قَالَ ءَاتُونِىٓ أُفْرِغْ عَلَيْهِ قِطْرًا ﴿٩٦﴾

فَمَا ٱسْطَٰعُوٓاْ أَن يَظْهَرُوهُ وَمَا ٱسْتَطَٰعُواْ لَهُۥ
نَقْبًا ﴿٩٧﴾

قَالَ هَٰذَا رَحْمَةٌ مِّن رَّبِّى ۖ فَإِذَا جَآءَ وَعْدُ رَبِّى
جَعَلَهُۥ دَكَّآءَ ۖ وَكَانَ وَعْدُ رَبِّى حَقًّا ﴿٩٨﴾

۞ وَتَرَكْنَا بَعْضَهُمْ يَوْمَئِذٍ يَمُوجُ فِى بَعْضٍ ۖ
وَنُفِخَ فِى ٱلصُّورِ فَجَمَعْنَٰهُمْ جَمْعًا ﴿٩٩﴾

បានប្រមូលផ្ដុំពួកគេទាំងអស់ ។

وَعَرَضۡنَا جَهَنَّمَ يَوۡمَئِذٖ لِّلۡكَٰفِرِينَ عَرۡضًا ١٠٠

១០០-ហើយនៅថ្ងៃនោះ យើងនឹងបង្ហាញនរកជើហាន់ណាំឱ្យពួកដែលគ្មានជំនឿបានឃើញយ៉ាងច្បាស់ ។

ٱلَّذِينَ كَانَتۡ أَعۡيُنُهُمۡ فِي غِطَآءٍ عَن ذِكۡرِي
وَكَانُواْ لَا يَسۡتَطِيعُونَ سَمۡعًا ١٠١

១០១-ពួកដែលភ្នែករបស់ពួកគេបានបិទបាំងអំពីការរំលឹករបស់យើង(គម្ពីរគួរអាន) គឺពួកគេពុំអាចឮវាឡើយ ។

أَفَحَسِبَ ٱلَّذِينَ كَفَرُوٓاْ أَن يَتَّخِذُواْ عِبَادِي
مِن دُونِيٓ أَوۡلِيَآءَۚ إِنَّآ أَعۡتَدۡنَا جَهَنَّمَ
لِلۡكَٰفِرِينَ نُزُلٗا ١٠٢

១០២-តើពួកដែលគ្មានជំនឿគិតថា ពួកគេអាចយកខ្ញុំរបស់យើង (ម៉ាឡាអ៊ីកាត់ និងអ៊ីសា) ធ្វើជាអ្នកគាំពារ(ម្ចាស់)របស់ពួកគេក្រៅពីយើងឬ? ពិតប្រាកដណាស់ យើងបានរៀបចំនរកជើហាន់ណាំជាកន្លែងជ្រកកោនសម្រាប់ពួកដែលគ្មានជំនឿ ។

قُلۡ هَلۡ نُنَبِّئُكُم بِٱلۡأَخۡسَرِينَ أَعۡمَٰلًا ١٠٣

១០៣-ចូរអ្នកពោលថា: តើចង់ឱ្យយើងប្រាប់ពួកអ្នកអំពីពួកដែលខាតបង់ជាងគេនូវទង្វើនានា(របស់ពួកគេ)ដែរឬទេ?

ٱلَّذِينَ ضَلَّ سَعۡيُهُمۡ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَا وَهُمۡ
يَحۡسَبُونَ أَنَّهُمۡ يُحۡسِنُونَ صُنۡعًا ١٠٤

១០៤-ពួកនោះហើយ ដែលការខំប្រឹងប្រែងរបស់ពួកគេបានខាតបង់នៅក្នុងជីវិតលោកិយនេះ ដោយពួកគេគិតថា ពិតប្រាកដណាស់ ពួកគេកំពុងសាងអំពើល្អ ។

أُوْلَٰٓئِكَ ٱلَّذِينَ كَفَرُواْ بِـَٔايَٰتِ رَبِّهِمۡ وَلِقَآئِهِۦ
فَحَبِطَتۡ أَعۡمَٰلُهُمۡ فَلَا نُقِيمُ لَهُمۡ يَوۡمَ ٱلۡقِيَٰمَةِ
وَزۡنٗا ١٠٥

១០៥-ពួកទាំងនោះ គឺជាពួកដែលគ្មានជំនឿនឹងភស្តុតាងនៃម្ចាស់របស់ពួកគេ និងការជួបទ្រង់(នៅថ្ងៃបរលោក) ។ ហើយទង្វើល្អទាំងឡាយរបស់ពួកគេត្រូវអសារបង់ ហើយនៅថ្ងៃបរលោកយើងនឹងមិនផ្តល់តម្លៃសម្រាប់ពួកគេឡើយ ។

ذَٰلِكَ جَزَآؤُهُمۡ جَهَنَّمُ بِمَا كَفَرُواْ وَٱتَّخَذُوٓاْ
ءَايَٰتِي وَرُسُلِي هُزُوًا ١٠٦

១០៦-នរកជើហាន់ណាំនោះហើយគឺជាការតបស្នងរបស់ពួកគេ ដោយសារតែពួកគេបានប្រឆាំង និងបានយកភស្តុតាង និងបណ្ដាអ្នកនាំសាររបស់យើងធ្វើជាការចំអកឡកឡឺយ ។

إِنَّ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ كَانَتۡ
لَهُمۡ جَنَّٰتُ ٱلۡفِرۡدَوۡسِ نُزُلًا ١٠٧

១០៧-ពិតប្រាកដណាស់ បណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អ ពួកគេនឹងទទួលបានឋានសួគ៌"ហ្វៀរដោស"ជាលំនៅដ្ឋានរបស់ពួកគេ ។

خَٰلِدِينَ فِيهَا لَا يَبۡغُونَ عَنۡهَا حِوَلٗا ١٠٨

១០៨-ពួកគេស្ថិតនៅក្នុងនោះជានិរន្តរ៍ ដោយពួកគេមិនចង់ផ្លាស់ប្តូរវាឡើយ ។

قُل لَّوۡ كَانَ ٱلۡبَحۡرُ مِدَادٗا لِّكَلِمَٰتِ رَبِّي لَنَفِدَ
ٱلۡبَحۡرُ قَبۡلَ أَن تَنفَدَ كَلِمَٰتُ رَبِّي وَلَوۡ جِئۡنَا
بِمِثۡلِهِۦ مَدَدٗا ١٠٩

១០៩-ចូរអ្នកពោលថាៈ ប្រសិនបើទឹកសមុទ្រជាទឹកខ្មៅសម្រាប់សរសេរពាក្យពេចន៍នៃម្ចាស់របស់ខ្ញុំ គឺទឹកសមុទ្រនឹងត្រូវរីងស្ងួតមុននឹងបញ្ចប់ពាក្យពេចន៍នៃម្ចាស់របស់ខ្ញុំ សូម្បីតែយើង(អល់ឡោះ) យកទឹកសមុទ្រផ្សេងទៀតមកបន្ថែមធ្វើជាទឹកខ្មៅក៏ដោយ ។

قُلۡ إِنَّمَآ أَنَا۠ بَشَرٞ مِّثۡلُكُمۡ يُوحَىٰٓ إِلَيَّ أَنَّمَآ
إِلَٰهُكُمۡ إِلَٰهٞ وَٰحِدٞۖ فَمَن كَانَ يَرۡجُواْ لِقَآءَ
رَبِّهِۦ فَلۡيَعۡمَلۡ عَمَلٗا صَٰلِحٗا وَلَا يُشۡرِكۡ
بِعِبَادَةِ رَبِّهِۦٓ أَحَدَۢا ١١٠

១១០-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តាមពិត ខ្ញុំជាមនុស្សលោកដូចពួកអ្នកដែរ គ្រាន់តែគេបានផ្ដល់វ៉ាហ៊ីមកឱ្យខ្ញុំថាៈ ពិតប្រាកដណាស់ ម្ចាស់របស់ពួកអ្នកគឺជាម្ចាស់តែមួយគត់ ។ ដូច្នេះអ្នកណាហើយដែលសង្ឃឹមថា នឹងបានជួបម្ចាស់របស់គេ ចូរឱ្យគេសាងអំពើណាដែលល្អ ហើយកុំឱ្យគេយកអ្នកណាម្នាក់ធ្វើជាដៃគូក្នុងការគោរពសក្ការៈចំពោះម្ចាស់របស់គេឱ្យសោះ ។

## سورة مريم

## ជំពូកម៉ារយ៉ាំ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

كٓهيعٓصٓ ١

១-កាហ្វ ហា យ៉ា អ៊ីន សទ ។

ذِكۡرُ رَحۡمَتِ رَبِّكَ عَبۡدَهُۥ زَكَرِيَّآ ٢

២-នេះគឺជាការរំលឹកនៃក្ដីមេត្តាករុណាម្ចាស់របស់អ្នកចំពោះខ្ញុំរបស់ទ្រង់ហ្សាការីយ៉ា ។

إِذۡ نَادَىٰ رَبَّهُۥ نِدَآءً خَفِيّٗا ٣

៣-នៅពេលដែលគេបានបួងសួងសុំទៅចំពោះម្ចាស់របស់គេនូវការបួងសួងមួយយ៉ាងស្ងៀមស្ងាត់ ។

قَالَ رَبِّ إِنِّي وَهَنَ ٱلۡعَظۡمُ مِنِّي وَٱشۡتَعَلَ
ٱلرَّأۡسُ شَيۡبٗا وَلَمۡ أَكُنۢ بِدُعَآئِكَ
رَبِّ شَقِيّٗا ٤

៤-គេបានបួងសួងសុំថាៈ ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ឆ្អឹងឆ្អែងរបស់ខ្ញុំបានទ្រុឌទ្រោមទៅហើយ ហើយសក់ក្បាលក៏ស្កូវព្រោងព្រាតទៀត ហើយខ្ញុំក៏មិនធ្លាប់ត្រូវបានគេបដិសេធនឹងការបួងសួងសុំចំពោះទ្រង់ដែរ ឱម្ចាស់របស់ខ្ញុំ!

وَإِنِّي خِفۡتُ ٱلۡمَوَٰلِيَ مِن وَرَآءِي وَكَانَتِ
ٱمۡرَأَتِي عَاقِرٗا فَهَبۡ لِي مِن لَّدُنكَ وَلِيّٗا ٥

៥-ហើយពិតប្រាកដណាស់ ខ្ញុំបារម្ភខ្លាចញាតិសន្ដានរបស់ខ្ញុំបន្ទាប់ពីខ្ញុំ(មិនអាចពង្រឹងសាសនារបស់ទ្រង់បាន) ហើយភរិយារបស់ខ្ញុំជាស្ត្រីដែលមិនអាចមានកូន ។ ដូច្នេះហើយសូមទ្រង់មេត្តាប្រទានអ្នកស្នងត្រកូលម្នាក់ពីទ្រង់ដល់ខ្ញុំផង ។

يَرِثُنِي وَيَرِثُ مِنۡ ءَالِ يَعۡقُوبَۖ وَٱجۡعَلۡهُ رَبِّ

៦-គេនឹងទទួលមរតករបស់ខ្ញុំ និងមរតកពីសាច់សាលោហិត

رَضِيّٗا ٦

របស់យ៉ាក់កូប ហើយសូមទ្រង់មេត្តាធ្វើឱ្យគេក្លាយជាអ្នកដែលទ្រង់គាប់ចិត្តផង ឱម្ចាស់របស់ខ្ញុំ! ។

يَٰزَكَرِيَّآ إِنَّا نُبَشِّرُكَ بِغُلَٰمٍ ٱسۡمُهُۥ يَحۡيَىٰ لَمۡ
نَجۡعَل لَّهُۥ مِن قَبۡلُ سَمِيّٗا ٧

៧-(អល់ឡោះមានបន្ទូលថា)ៈ ឱហ្សាការីយ៉ា! ពិតប្រាកដណាស់ យើងនឹងផ្តល់ដំណឹងរីករាយដល់អ្នក(ដោយប្រទាន)នូវក្មេងប្រុសម្នាក់ឈ្មោះរបស់គេគឺយ៉ះយ៉ា ដែលយើងមិនធ្លាប់ដាក់ឈ្មោះនេះឱ្យអ្នកណាម្នាក់ទេពីមុនមក ។

قَالَ رَبِّ أَنَّىٰ يَكُونُ لِي غُلَٰمٞ وَكَانَتِ
ٱمۡرَأَتِي عَاقِرٗا وَقَدۡ بَلَغۡتُ مِنَ ٱلۡكِبَرِ
عِتِيّٗا ٨

៨-គេ(ហ្សាការីយ៉ា)បានពោលថាៈ ឱម្ចាស់របស់ខ្ញុំ! តើខ្ញុំអាចមានកូនយ៉ាងដូចម្តេចទៅ បើភរិយារបស់ខ្ញុំជាស្ត្រីអារម្នាក់ ហើយខ្ញុំក៏ចាស់ជរាណាស់ទៅហើយនោះ?

قَالَ كَذَٰلِكَ قَالَ رَبُّكَ هُوَ عَلَيَّ
هَيِّنٞ وَقَدۡ خَلَقۡتُكَ مِن قَبۡلُ وَلَمۡ
تَكُ شَيۡـٔٗا ٩

៩-គេ(ជីព្រីល)បានពោលថាៈ ដូច្នោះហើយបានជាម្ចាស់របស់អ្នកបានមានបន្ទូលថាៈ វាជាការងាយស្រួលបំផុតសម្រាប់យើង ។ ហើយជាការពិតណាស់ យើងបានបង្កើតអ្នកពីមុនមកដោយអ្នកពុំទាន់មានសោះ ។

قَالَ رَبِّ ٱجۡعَل لِّيٓ ءَايَةٗۖ قَالَ ءَايَتُكَ أَلَّا
تُكَلِّمَ ٱلنَّاسَ ثَلَٰثَ لَيَالٖ سَوِيّٗا ١٠

១០-គេ(ហ្សាការីយ៉ា)បានពោលថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាផ្តល់ជាសញ្ញាណាមួយ(ពីការមានគភ៌)ដល់ខ្ញុំផង ។ ទ្រង់មានបន្ទូលថាៈ សញ្ញារបស់អ្នកគឺអ្នកមិនអាចនិយាយទៅកាន់មនុស្សលោកបានទេក្នុងរយៈពេលបីយប់ដោយមានសុខភាពធម្មតា ។

فَخَرَجَ عَلَىٰ قَوۡمِهِۦ مِنَ ٱلۡمِحۡرَابِ فَأَوۡحَىٰٓ
إِلَيۡهِمۡ أَن سَبِّحُواْ بُكۡرَةٗ وَعَشِيّٗا ١١

១១-ពេលនោះហ្សាការីយ៉ាបានចេញពីមាស្ជិទ(កន្លែងថ្វាយបង្គំ)ទៅជួបនឹងក្រុមរបស់គាត់ ហើយគាត់បានធ្វើសញ្ញាឱ្យពួកគេលើកតម្កើងសរសើរទ្រង់ទាំងព្រឹកទាំងល្ងាច ។

يَٰيَحۡيَىٰ خُذِ ٱلۡكِتَٰبَ بِقُوَّةٖۖ وَءَاتَيۡنَٰهُ
ٱلۡحُكۡمَ صَبِيّٗا ١٢

១២-(អល់ឡោះបានមានបន្ទូលថា) ឱយ៉ះយ៉ា! ចូរអ្នកប្រកាន់តាមគម្ពីរ(តាវ៉រ៉ត)នេះឱ្យបានខ្ជាប់ខ្ជួន ។ ហើយយើងបានប្រទានឱ្យគេនូវគតិបណ្ឌិតតាំងពីកុមារភាព ។

وَحَنَانٗا مِّن لَّدُنَّا وَزَكَوٰةٗۖ وَكَانَ تَقِيّٗا ١٣

១៣-និងក្តីមេត្តាករុណា ហើយនិងភាពស្អាតស្អំអំពីយើង ហើយគេគឺជាអ្នកកោតខ្លាច(ចំពោះអល់ឡោះ) ។

وَبَرَّۢا بِوَٰلِدَيۡهِ وَلَمۡ يَكُن جَبَّارًا عَصِيّٗا ١٤

១៤-ហើយគេគឺជាកូនកតញ្ញូចំពោះមាតាបិតារបស់គេ ។ ហើយ

គេមិនដែលព្រហើនកោងកាចប្រឆាំង( ចំពោះអល់ឡោះ និងមាតាបិតារបស់គេ) ឡើយ ។

وَسَلَٰمٌ عَلَيۡهِ يَوۡمَ وُلِدَ وَيَوۡمَ يَمُوتُ وَيَوۡمَ يُبۡعَثُ حَيّٗا ﴿١٥﴾

១៥-ហើយសូមសុខសន្តិភាពកើតមានដល់គេ( យ៉ះយ៉ា) នៅថ្ងៃដែលគេត្រូវបានប្រសូត និងនៅថ្ងៃដែលគេស្លាប់ ហើយនិងថ្ងៃដែលគេត្រូវគេធ្វើឱ្យរស់ឡើងវិញ( ថ្ងៃបរលោក) ។

وَٱذۡكُرۡ فِي ٱلۡكِتَٰبِ مَرۡيَمَ إِذِ ٱنتَبَذَتۡ مِنۡ أَهۡلِهَا مَكَانٗا شَرۡقِيّٗا ﴿١٦﴾

១៦-ហើយចូរអ្នក( មូហាំម៉ាត់) រំលឹកពីរឿងម៉ារយ៉ាំនៅក្នុងគម្ពីរ( គួរអាន) ដែលនៅពេលនោះនាងបានចាកឆ្ងាយពីក្រុមគ្រួសាររបស់នាងឆ្ពោះទៅកន្លែងមួយនៅទិសខាងកើត ។

فَٱتَّخَذَتۡ مِن دُونِهِمۡ حِجَابٗا فَأَرۡسَلۡنَآ إِلَيۡهَا رُوحَنَا فَتَمَثَّلَ لَهَا بَشَرٗا سَوِيّٗا ﴿١٧﴾

១៧-រួចមកនាងបានយករបាំងមួយមកបិទបាំងពីពួកគេ( អ្នកដទៃ) ។ ក្រោយមក យើងបានបញ្ជូនរួហ( ជីព្រីល) របស់យើងទៅកាន់នាង ។ ហើយគេ( ជីព្រីល) បានក្លែងខ្លួនជាមនុស្សម្នាក់ពេញលក្ខណៈទៅជួបនាង ។

قَالَتۡ إِنِّيٓ أَعُوذُ بِٱلرَّحۡمَٰنِ مِنكَ إِن كُنتَ تَقِيّٗا ﴿١٨﴾

១៨-នាងបាននិយាយថាៈ ពិតប្រាកដណាស់ ខ្ញុំសុំពីម្ចាស់មហាសប្បុរសឱ្យបញ្ចៀសខ្ញុំ( ពីភាពអាក្រក់) ពីអ្នកប្រសិនបើអ្នកគឺជាអ្នកកោតខ្លាចអល់ឡោះ ។

قَالَ إِنَّمَآ أَنَا۠ رَسُولُ رَبِّكِ لِأَهَبَ لَكِ غُلَٰمٗا زَكِيّٗا ﴿١٩﴾

១៩-គេ( ជីព្រីល) បានតបវិញថាៈ តាមពិត ខ្ញុំគ្រាន់តែជាអ្នកនាំសារពីម្ចាស់របស់អ្នក ដើម្បីឱ្យខ្ញុំប្រទានដល់អ្នកនូវកូនប្រុសម្នាក់ដែលស្អាតស្អំ ។

قَالَتۡ أَنَّىٰ يَكُونُ لِي غُلَٰمٞ وَلَمۡ يَمۡسَسۡنِي بَشَرٞ وَلَمۡ أَكُ بَغِيّٗا ﴿٢٠﴾

២០-នាងបាននិយាយ( ដោយភ្ញាក់ផ្អើល) ថាៈ តើឱ្យខ្ញុំមានកូនប្រុសយ៉ាងដូចម្ដេច បើគ្មាននរណាម្នាក់ធ្លាប់ប៉ះពាល់ខ្ញុំ( រៀបអាពាហ៍ពិពាហ៍) ហើយខ្ញុំក៏មិនធ្លាប់ប្រព្រឹត្តអំពើអសីលធម៌( ហ្សុីណា) ផងនោះ ?

قَالَ كَذَٰلِكِ قَالَ رَبُّكِ هُوَ عَلَيَّ هَيِّنٞۖ وَلِنَجۡعَلَهُۥٓ ءَايَةٗ لِّلنَّاسِ وَرَحۡمَةٗ مِّنَّاۚ وَكَانَ أَمۡرٗا مَّقۡضِيّٗا ﴿٢١﴾

២១-គេ( ជីព្រីល) បានពោលថាៈ ដូច្នោះហើយបានជាម្ចាស់របស់អ្នកបានមានបន្ទូលថាៈ វាជាការងាយស្រួលបំផុតសម្រាប់យើង ។ ហើយយើងយកគេ( ក្មេងប្រុស) ធ្វើជាភស្តុតាងសម្រាប់មនុស្សលោក និងជាក្តីមេត្តាករុណាពីយើង ។ ហើយរឿងនេះអល់ឡោះបានចារទុករួចជាស្រេចមកហើយ ។

۞ فَحَمَلَتۡهُ فَٱنتَبَذَتۡ بِهِۦ مَكَانٗا قَصِيّٗا ﴿٢٢﴾

២២-ដូច្នេះ នាងក៏ចាប់ផ្ដើមមានគភ៌ ហើយនាងបានចាកចេញទៅកន្លែងដែលឆ្ងាយ( ជ្រលងភ្នំហៃ្លទ្បាហាំទីក្រុងយេរូសាឡឹម) ។

فَأَجَآءَهَا ٱلۡمَخَاضُ إِلَىٰ جِذۡعِ ٱلنَّخۡلَةِ
قَالَتۡ يَٰلَيۡتَنِي مِتُّ قَبۡلَ هَٰذَا وَكُنتُ
نَسۡيٗا مَّنسِيّٗا ﴿٢٣﴾

២៣-ហើយការឈឺចាប់នៅពេលមុនសំរាលកូនបានជំរុញឱ្យនាងទៅកាន់ដើមល្មើមួយដើម ហើយនាងក៏និយាយថា: ឱខ្លួនខ្ញុំអើយ! ប្រសិនបើខ្ញុំបានស្លាប់មុននេះ ប្រហែលជាខ្ញុំត្រូវបានគេបំភ្លេច និងគេមិននឹកឃើញខ្ញុំឡើយ ។

فَنَادَىٰهَا مِن تَحۡتِهَآ أَلَّا تَحۡزَنِي قَدۡ جَعَلَ رَبُّكِ
تَحۡتَكِ سَرِيّٗا ﴿٢٤﴾

២៤-ហើយពេលនោះមានសំឡេងមួយ( ជីព្រីល) បានស្រែកប្រាប់នាងពីខាងក្រោមមកថា: សូមអ្នកកុំព្រួយបារម្ភអ្វី ជាការពិតណាស់ម្ចាស់របស់អ្នកបានធ្វើឱ្យមានប្រឡាយទឹកមួយនៅពីក្រោមអ្នក ។

وَهُزِّيٓ إِلَيۡكِ بِجِذۡعِ ٱلنَّخۡلَةِ تُسَٰقِطۡ عَلَيۡكِ
رُطَبٗا جَنِيّٗا ﴿٢٥﴾

២៥-ហើយសូមអ្នកអង្រួនគល់ដើមល្មើនេះ វានឹងជ្រុះនូវផ្លែទុំស្រស់ៗឱ្យអ្នក ។

فَكُلِي وَٱشۡرَبِي وَقَرِّي عَيۡنٗاۖ فَإِمَّا تَرَيِنَّ مِنَ
ٱلۡبَشَرِ أَحَدٗا فَقُولِيٓ إِنِّي نَذَرۡتُ لِلرَّحۡمَٰنِ
صَوۡمٗا فَلَنۡ أُكَلِّمَ ٱلۡيَوۡمَ إِنسِيّٗا ﴿٢٦﴾

២៦-ដូច្នេះ ចូរអ្នកទទួលទានផ្លែល្មើ និងផឹកទឹកនេះ ហើយនិងរីករាយ( ដោយការប្រទានកូនពីអល់ឡោះចំពោះអ្នក) ចុះ ។ ហើយប្រសិនបើអ្នកជួបមនុស្សណាម្នាក់( ហើយគេសួរអ្នកអំពីកូន) សូមអ្នកប្រាប់គេថា: ពិតប្រាកដណាស់ខ្ញុំបានសច្ចាកាន់តំណមទៅចំពោះម្ចាស់មហាសប្បុរស ។ ដូច្នេះ ខ្ញុំនឹងមិននិយាយរកអ្នកណាម្នាក់ឡើយនៅថ្ងៃនេះ ។

فَأَتَتۡ بِهِۦ قَوۡمَهَا تَحۡمِلُهُۥۖ قَالُواْ يَٰمَرۡيَمُ لَقَدۡ
جِئۡتِ شَيۡـٔٗا فَرِيّٗا ﴿٢٧﴾

២៧-បន្ទាប់មក នាងបាននាំទារកនោះ ឆ្ពោះទៅកាន់ក្រុមរបស់នាងដោយបីទារកនោះ ។ ( ពេលឃើញម៉ារយ៉ាំបីទារកនោះ) ពួកគេបាននិយាយថា: ឱម៉ារយ៉ាំ! ជាការពិតណាស់ អ្នកបាននាំមកនូវរឿងមួយចម្លែកបំផុត ។

يَٰٓأُخۡتَ هَٰرُونَ مَا كَانَ أَبُوكِ ٱمۡرَأَ سَوۡءٖ وَمَا
كَانَتۡ أُمُّكِ بَغِيّٗا ﴿٢٨﴾

២៨-ឱប្អូនស្រីហារូន![1] ឪពុករបស់អ្នកពុំមែនជាមនុស្សអាក្រក់( ហ៊្សិណា) ទេ ហើយម្ដាយរបស់អ្នកក៏ពុំមែនជាស្រីខូចដែរ ។

១-ម៉ារយ៉ាំ និងហារូនមិនមែនជាបងប្អូនបង្កើតទេ ព្រោះហារូនកើតមុននាងច្រើនសតវត្សមកហើយ ។ តាមពិតគេទាំងពីរគ្រាន់តែជាបងប្អូនក្នុងនាមគោរពសក្ការៈតែប៉ុណ្ណោះ ។

فَأَشَارَتۡ إِلَيۡهِۖ قَالُواْ كَيۡفَ نُكَلِّمُ مَن كَانَ فِي ٱلۡمَهۡدِ صَبِيّٗا ٢٩

២៩-នាងបានចង្អុលទៅទារកនោះ(ដើម្បីឱ្យពួកគេសួរ)។ ពួកគេបាននិយាយថាៈ តើឱ្យពួកយើងសួរទៅកាន់ទារកនៅក្នុងអង្រឹងយ៉ាងដូចម្ដេច?

قَالَ إِنِّي عَبۡدُ ٱللَّهِ ءَاتَىٰنِيَ ٱلۡكِتَٰبَ وَجَعَلَنِي نَبِيّٗا ٣٠

៣០-ទារកនោះ(អ៊ីសា)បានពោលថាៈ ពិតប្រាកដណាស់ ខ្ញុំគឺជាខ្ញុំរបស់អល់ឡោះ ដែលទ្រង់បានប្រទានគម្ពីរមួយ(អ៊ីញជីល)ឱ្យខ្ញុំ ហើយទ្រង់បានបង្កើតខ្ញុំជាណាពីម្នាក់។

وَجَعَلَنِي مُبَارَكًا أَيۡنَ مَا كُنتُ وَأَوۡصَٰنِي بِٱلصَّلَوٰةِ وَٱلزَّكَوٰةِ مَا دُمۡتُ حَيّٗا ٣١

៣១-ហើយទ្រង់បានប្រទានពរជ័យដល់ខ្ញុំគ្រប់ទីកន្លែងដែលខ្ញុំមានវត្តមាន ហើយទ្រង់បានផ្ដែផ្ដាំខ្ញុំឱ្យប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ដរាបណាខ្ញុំនៅមានជីវិត។

وَبَرَّۢا بِوَٰلِدَتِي وَلَمۡ يَجۡعَلۡنِي جَبَّارٗا شَقِيّٗا ٣٢

៣២-ហើយធ្វើឱ្យខ្ញុំក្លាយជាកូនកតញ្ញូចំពោះម្ដាយរបស់ខ្ញុំ ហើយទ្រង់មិនបានធ្វើឱ្យខ្ញុំក្លាយជាអ្នកក្អេងក្អាងប្រឆាំង(នឹងទ្រង់)ឡើយ។

وَٱلسَّلَٰمُ عَلَيَّ يَوۡمَ وُلِدتُّ وَيَوۡمَ أَمُوتُ وَيَوۡمَ أُبۡعَثُ حَيّٗا ٣٣

៣៣-ហើយសូមសុខសន្ដិភាពកើតមានដល់ខ្ញុំ(អ៊ីសា) នៅថ្ងៃដែលគេបានប្រសូតខ្ញុំ និងនៅថ្ងៃដែលខ្ញុំស្លាប់ ហើយនិងនៅថ្ងៃដែលគេធ្វើឱ្យខ្ញុំរស់ឡើងវិញ(ថ្ងៃបរលោក)។

ذَٰلِكَ عِيسَى ٱبۡنُ مَرۡيَمَۖ قَوۡلَ ٱلۡحَقِّ ٱلَّذِي فِيهِ يَمۡتَرُونَ ٣٤

៣៤-ដំណើររឿងនោះគឺអ៊ីសាកូនប្រុសរបស់ម៉ារយ៉ាំ។ វាគឺជាពាក្យពិតដែលពួកគេ(យ៉ាហ៊ូទី និងណាសរ៉នី) មានការសង្ស័យ(ឬឈ្លោះប្រកែកគ្នា)ចំពោះវា។

مَا كَانَ لِلَّهِ أَن يَتَّخِذَ مِن وَلَدٖۖ سُبۡحَٰنَهُۥٓۚ إِذَا قَضَىٰٓ أَمۡرٗا فَإِنَّمَا يَقُولُ لَهُۥ كُن فَيَكُونُ ٣٥

៣៥-វាមិនសក្ដិសមទេសម្រាប់អល់ឡោះដែលថា ទ្រង់មានបុត្រ។ ទ្រង់មហាស្អាតស្អំ! នៅពេលដែលទ្រង់សម្រេចចង់ឱ្យអ្វីមួយកើតឡើង គឺទ្រង់គ្រាន់តែមានបន្ទូលទៅកាន់វត្ថុនោះថាៈ ចូរកើតចុះ វាក៏កើតឡើងភ្លាម។

وَإِنَّ ٱللَّهَ رَبِّي وَرَبُّكُمۡ فَٱعۡبُدُوهُۚ هَٰذَا صِرَٰطٞ مُّسۡتَقِيمٞ ٣٦

៣៦-(អ៊ីសាបានពោលថា) ហើយពិតប្រាកដណាស់ អល់ឡោះគឺជាម្ចាស់របស់ខ្ញុំ និងជាម្ចាស់របស់ពួកអ្នក។ ដូច្នេះ ពួកអ្នកត្រូវគោរពសក្ការៈទៅចំពោះទ្រង់តែមួយគត់។ នេះគឺជាមាគ៌ាដ៏ត្រឹមត្រូវ។

فَٱخۡتَلَفَ ٱلۡأَحۡزَابُ مِنۢ بَيۡنِهِمۡۖ فَوَيۡلٞ لِّلَّذِينَ كَفَرُواْ مِن مَّشۡهَدِ يَوۡمٍ عَظِيمٍ ٣٧

៣៧-ក្រោយមក បក្សពួកទាំងឡាយ(របស់យ៉ាហ៊ូទី និងណាសរ៉នី)បានខ្វែងគំនិតគ្នារវាងពួកគេ។ ដូច្នេះភាពវិនាស

អន្តរាយគឺសម្រាប់ពួកដែលគ្មានជំនឿនឹងការជួបជុំគ្នានៃថ្ងៃដ៏ធំធេង( ថ្ងៃបរលោក) ។

أَسْمِعْ بِهِمْ وَأَبْصِرْ يَوْمَ يَأْتُونَنَا لَٰكِنِ ٱلظَّٰلِمُونَ ٱلْيَوْمَ فِى ضَلَٰلٍ مُّبِينٍ ﴿٣٨﴾

៣៨-ពួកគេនឹងឮ និងឃើញច្បាស់នៅថ្ងៃដែលពួកគេវិលមកជួបយើង( អល់ឡោះ)វិញ ។ ក៏ប៉ុន្តែពួកដែលបំពាននៅថ្ងៃនេះ( លោកិយ) ស្ថិតនៅក្នុងភាពវង្វេងយ៉ាងច្បាស់លាស់ ។

وَأَنذِرْهُمْ يَوْمَ ٱلْحَسْرَةِ إِذْ قُضِىَ ٱلْأَمْرُ وَهُمْ فِى غَفْلَةٍ وَهُمْ لَا يُؤْمِنُونَ ﴿٣٩﴾

៣៩-ចូរអ្នក( មូហាំម៉ាត់) ដាស់តឿនព្រមានពួកគេនូវថ្ងៃសោកស្តាយ( ថ្ងៃបរលោក) នៅពេលដែលការកាត់ក្តីត្រូវបានគេសម្រេច( ឱ្យអ្នកមានជំនឿចូលឋានសួគ៌ និងអ្នកគ្មានជំនឿចូលឋាននរក) ខណៈដែលពួកគេស្ថិតក្នុងភាពព្រងើយកន្តើយនិងគ្មានជំនឿ( នៅក្នុងលោកិយ) ។

إِنَّا نَحْنُ نَرِثُ ٱلْأَرْضَ وَمَنْ عَلَيْهَا وَإِلَيْنَا يُرْجَعُونَ ﴿٤٠﴾

៤០-ពិតប្រាកដណាស់ យើងនឹងទទួលមរតកផែនដី និងអ្វីៗទាំងអស់ដែលនៅលើវា ហើយពួកគេនឹងត្រូវវិលត្រឡប់មកកាន់យើងវិញ( ដើម្បីជំនុំជំរះ) ។

وَٱذْكُرْ فِى ٱلْكِتَٰبِ إِبْرَٰهِيمَ إِنَّهُۥ كَانَ صِدِّيقًا نَّبِيًّا ﴿٤١﴾

៤១-ហើយចូរអ្នក( មូហាំម៉ាត់) រំលឹកពីរឿងអ៊ីព្រហ៊ីមនៅក្នុងគម្ពីរ( គួរអាន) ។ ពិតប្រាកដណាស់ គេជាមនុស្សសច្ចៈជាណាពីម្នាក់ ។

إِذْ قَالَ لِأَبِيهِ يَٰٓأَبَتِ لِمَ تَعْبُدُ مَا لَا يَسْمَعُ وَلَا يُبْصِرُ وَلَا يُغْنِى عَنكَ شَيْـًٔا ﴿٤٢﴾

៤២-នៅពេលដែលគេ( អ៊ីព្រហ៊ីម) បានពោលទៅកាន់ឪពុក( អាហ្សើរ) របស់គេថាៈ ឱឪពុករបស់ខ្ញុំ! ហេតុអ្វីបានជាឪពុកគោរពសក្ការៈចំពោះអ្វីដែលស្តាប់មិនឮ និងមើលមិនឃើញ ហើយនិងមិនអាចផ្តល់ផលប្រយោជន៍អ្វីដល់ឪពុកទាល់តែសោះនោះ?

يَٰٓأَبَتِ إِنِّى قَدْ جَآءَنِى مِنَ ٱلْعِلْمِ مَا لَمْ يَأْتِكَ فَٱتَّبِعْنِىٓ أَهْدِكَ صِرَٰطًا سَوِيًّا ﴿٤٣﴾

៤៣-ឱឪពុករបស់ខ្ញុំ! ពិតប្រាកដណាស់ ចំណេះដឹងខ្លះ( ពីអល់ឡោះ) បានមកដល់ខ្ញុំ ដែលវាមិនបានមកដល់លោកឪពុក ។ ដូច្នេះ សូមលោកឪពុកធ្វើតាមខ្ញុំចុះ ខ្ញុំនឹងបង្ហាញលោកឪពុកនូវមាគ៌ាដ៏ត្រឹមត្រូវ ។

يَٰٓأَبَتِ لَا تَعْبُدِ ٱلشَّيْطَٰنَ إِنَّ ٱلشَّيْطَٰنَ كَانَ لِلرَّحْمَٰنِ عَصِيًّا ﴿٤٤﴾

៤៤-ឱឪពុករបស់ខ្ញុំ! សូមលោកឪពុកកុំគោរពសក្ការៈទៅចំពោះស្ហៃតន ។ ពិតប្រាកដណាស់ ស្ហៃតនគឺជាអ្នកដែលបានប្រឆាំងនឹងម្ចាស់មហាសប្បុរស ។

៤៥-ឱឪពុករបស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំខ្លាចទារុណកម្មពីម្ចាស់មហាសប្បុរសត្រូវទៅលើលោកឪពុក ហើយលោកឪពុកនឹងក្លាយជាមិត្តភក្តិរបស់ស្ហៃតន(នៅក្នុងឋាននរក)។

يَٰٓأَبَتِ إِنِّيٓ أَخَافُ أَن يَمَسَّكَ عَذَابٞ مِّنَ
ٱلرَّحۡمَٰنِ فَتَكُونَ لِلشَّيۡطَٰنِ وَلِيّٗا ٤٥

៤៦-ឪពុករបស់គេបានតបវិញថា: តើឯងស្អប់ខ្ពើមព្រះរបស់យើងឬ ឱអ៊ីព្រហ៊ីម? ប្រសិនបើឯងមិនព្រមបញ្ឈប់(និយាយ)ទេ យើងពិតជានឹងគប់សម្លាប់ឯងនឹងដុំថ្ម។ ដូច្នេះ ចូរឯងចាកចេញឱ្យឆ្ងាយពីយើង។

قَالَ أَرَاغِبٌ أَنتَ عَنۡ ءَالِهَتِي يَٰٓإِبۡرَٰهِيمُۖ لَئِن
لَّمۡ تَنتَهِ لَأَرۡجُمَنَّكَۖ وَٱهۡجُرۡنِي مَلِيّٗا ٤٦

៤៧-គេ(អ៊ីព្រហ៊ីម)បានពោលថា: សូមឱ្យសេចក្តីសុខកើតមានដល់លោកឪពុក! ខ្ញុំនឹងសុំអភ័យទោសពីម្ចាស់របស់ខ្ញុំឱ្យលោកឪពុក។ ពិតប្រាកដណាស់ ទ្រង់តែងតែផ្តល់ក្តីមេត្តាករុណាដល់ខ្ញុំជានិច្ច។

قَالَ سَلَٰمٌ عَلَيۡكَۖ سَأَسۡتَغۡفِرُ لَكَ رَبِّيٓۖ إِنَّهُۥ
كَانَ بِي حَفِيّٗا ٤٧

៤៨-ហើយខ្ញុំនឹងចាកចេញពីពួកអ្នក និងពីអ្វីដែលពួកអ្នកកំពុងគោរពបូជាសួងសុំក្រៅពីអល់ឡោះ។ ហើយខ្ញុំនឹងបួងសួងសុំទៅចំពោះម្ចាស់របស់ខ្ញុំ សង្ឃឹមថាខ្ញុំនឹងមិនត្រូវគេបដិសេធក្នុងការបួងសួងសុំចំពោះម្ចាស់របស់ខ្ញុំឡើយ។

وَأَعۡتَزِلُكُمۡ وَمَا تَدۡعُونَ مِن دُونِ ٱللَّهِ
وَأَدۡعُواْ رَبِّي عَسَىٰٓ أَلَّآ أَكُونَ بِدُعَآءِ
رَبِّي شَقِيّٗا ٤٨

៤៩-ដូច្នេះ នៅពេលដែលអ៊ីព្រហ៊ីមបានចាកចេញពីពួកគេនិងពីអ្វីដែលពួកគេគោរពសក្ការៈក្រៅពីអល់ឡោះនោះ យើងបានប្រទានអ៊ីសហាក(កូន) និងយ៉ាកកូប(ចៅ)ដល់គេ ហើយយើងបានបង្កើតពួកគេទាំងពីរជាណាពី។

فَلَمَّا ٱعۡتَزَلَهُمۡ وَمَا يَعۡبُدُونَ مِن دُونِ ٱللَّهِ
وَهَبۡنَا لَهُۥٓ إِسۡحَٰقَ وَيَعۡقُوبَۖ وَكُلّٗا جَعَلۡنَا
نَبِيّٗا ٤٩

៥០-ហើយយើងបានប្រទានដល់ពួកគេនូវក្តីមេត្តាករុណារបស់យើង ហើយយើងបានធ្វើឱ្យពួកគេមានកេរ្តិ៍ឈ្មោះល្បីល្បាញខ្ពង់ខ្ពស់។

وَوَهَبۡنَا لَهُم مِّن رَّحۡمَتِنَا وَجَعَلۡنَا لَهُمۡ لِسَانَ
صِدۡقٍ عَلِيّٗا ٥٠

៥១-ចូរអ្នក(មូហាំម៉ាត់)រំលឹកពីរឿងមូសានៅក្នុងគម្ពីរ(គួរអាន)។ ពិតប្រាកដណាស់ គេជាអ្នកដែលត្រូវបានជ្រើសរើស ហើយគេគឺជាអ្នកនាំសារនិងជាណាពីម្នាក់។

وَٱذۡكُرۡ فِي ٱلۡكِتَٰبِ مُوسَىٰٓۚ إِنَّهُۥ كَانَ مُخۡلَصٗا
وَكَانَ رَسُولٗا نَّبِيّٗا ٥١

៥២-ហើយយើងបានហៅគេនៅក្បែរភ្នំតួរប៉ែកខាងស្តាំ ហើយយើងធ្វើឱ្យគេមកជិតយើង ដើម្បីនិយាយជាមួយគេ។

وَنَٰدَيۡنَٰهُ مِن جَانِبِ ٱلطُّورِ ٱلۡأَيۡمَنِ وَقَرَّبۡنَٰهُ
نَجِيّٗا ٥٢

៥៣-ហើយយើងបានប្រទានដល់គេនូវបងប្រុសរបស់គេហារូន ដែលជាណាពីម្នាក់ដោយក្តីមេត្តាករុណារបស់យើង ។

وَوَهَبْنَا لَهُۥ مِن رَّحْمَتِنَآ أَخَاهُ هَـٰرُونَ نَبِيًّا ﴿٥٣﴾

៥៤-ហើយចូរអ្នក( មូហាំម៉ាត់)រំលឹកពីរឿងអ៊ីស្មាអ៊ីលនៅក្នុងគម្ពីរ( គួរអាន) ។ ពិតប្រាកដណាស់ គេជាអ្នកសច្ចៈ គោរពកិច្ចសន្យា ហើយគេជាអ្នកនាំសារ និងជាណាពីម្នាក់ ។

وَٱذْكُرْ فِى ٱلْكِتَـٰبِ إِسْمَـٰعِيلَ ۚ إِنَّهُۥ كَانَ صَادِقَ ٱلْوَعْدِ وَكَانَ رَسُولًا نَّبِيًّا ﴿٥٤﴾

៥៥-ហើយគេ( អ៊ីស្មាអ៊ីល)បានបង្គាប់គ្រួសាររបស់គេឱ្យប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ ។ ហើយគេជាអ្នកត្រូវបានពេញចិត្តពីម្ចាស់របស់គេ ។

وَكَانَ يَأْمُرُ أَهْلَهُۥ بِٱلصَّلَوٰةِ وَٱلزَّكَوٰةِ وَكَانَ عِندَ رَبِّهِۦ مَرْضِيًّا ﴿٥٥﴾

៥៦-ហើយចូរអ្នក( មូហាំម៉ាត់)រំលឹកពីរឿងអ៊ិតទ្រីសនៅក្នុងគម្ពីរ( គួរអាន) ។ ពិតប្រាកដណាស់ គេជាមនុស្សសច្ចៈជាណាពីម្នាក់ ។

وَٱذْكُرْ فِى ٱلْكِتَـٰبِ إِدْرِيسَ ۚ إِنَّهُۥ كَانَ صِدِّيقًا نَّبِيًّا ﴿٥٦﴾

៥៧-ហើយយើងបានលើកតម្កើងគេ( អ៊ិតទ្រីស)ឱ្យមានឋានៈខ្ពង់ខ្ពស់ ។

وَرَفَعْنَـٰهُ مَكَانًا عَلِيًّا ﴿٥٧﴾

៥៨-អ្នកទាំងនោះហើយដែលអល់ឡោះបានប្រទាននៀកម៉ាត់ដល់ពួកគេឱ្យកើតជាណាពីក្នុងចំណោមកូនចៅអាដាំ និងអំពីបណ្តាអ្នកដែលយើងបានសង្គ្រោះជាមួយនឹងនួហ និងកូនចៅអ៊ីព្រហ៊ីម និងអ៊ីស្រាអែល ហើយនិងអំពីបណ្តាអ្នកដែលយើងបានចង្អុលបង្ហាញ និងបានជ្រើសរើស ។ នៅពេលដែលមានគេសូត្រអាយ៉ាត់ៗរបស់ម្ចាស់មហាសប្បុរសឱ្យពួកគេស្តាប់ ពួកគេបានក្រាបស៊ូជូត និងយំ( ដោយសារកោតខ្លាចអល់ឡោះ) ។

أُو۟لَـٰٓئِكَ ٱلَّذِينَ أَنْعَمَ ٱللَّهُ عَلَيْهِم مِّنَ ٱلنَّبِيِّـۧنَ مِن ذُرِّيَّةِ ءَادَمَ وَمِمَّنْ حَمَلْنَا مَعَ نُوحٍ وَمِن ذُرِّيَّةِ إِبْرَٰهِيمَ وَإِسْرَٰٓءِيلَ وَمِمَّنْ هَدَيْنَا وَٱجْتَبَيْنَآ ۚ إِذَا تُتْلَىٰ عَلَيْهِمْ ءَايَـٰتُ ٱلرَّحْمَـٰنِ خَرُّوا۟ سُجَّدًا وَبُكِيًّا ۩ ﴿٥٨﴾

៥៩-ហើយក្រោយមក មានមនុស្សមួយចំនួនបានបោះបង់ការប្រតិបត្តិសឡាត និងបានធ្វើតាមតណ្ហាបន្ទាប់ពីពួកគេ( ណាពី) ។ ដូច្នេះ ពួកគេគង់តែជួបនឹងភាពវិនាសអន្តរាយជាមិនខាន ។

۞ فَخَلَفَ مِنۢ بَعْدِهِمْ خَلْفٌ أَضَاعُوا۟ ٱلصَّلَوٰةَ وَٱتَّبَعُوا۟ ٱلشَّهَوَٰتِ ۖ فَسَوْفَ يَلْقَوْنَ غَيًّا ﴿٥٩﴾

៦០-លើកលែងតែអ្នកដែលបានសារភាពកំហុស និងមានជំនឿ ហើយនិងបានសាងអំពើល្អត្រឹមត្រូវប៉ុណ្ណោះ ។ ដូច្នេះពួកទាំងនោះនឹងចូលឋានសួគ៌ ហើយពួកគេមិនត្រូវគេបំបាត់អ្វី( អំពើល្អ)ឡើយ ។

إِلَّا مَن تَابَ وَءَامَنَ وَعَمِلَ صَـٰلِحًا فَأُو۟لَـٰٓئِكَ يَدْخُلُونَ ٱلْجَنَّةَ وَلَا يُظْلَمُونَ شَيْـًٔا ﴿٦٠﴾

៦១-( ពួកគេនឹងចូល)ឋានសួគ៌អាត់និន ដែលម្ចាស់មហា

جَنَّـٰتِ عَدْنٍ ٱلَّتِى وَعَدَ ٱلرَّحْمَـٰنُ عِبَادَهُۥ

بِٱلۡغَيۡبِۚ إِنَّهُۥ كَانَ وَعۡدُهُۥ مَأۡتِيّٗا ٦١

សប្បុរសបានសន្យាចំពោះខ្ញុំទាំងអស់របស់ទ្រង់ដោយអាថិកំបាំង។ ពិតប្រាកដណាស់ ការសន្យារបស់ទ្រង់គឺត្រូវតែមកដល់។

لَّا يَسۡمَعُونَ فِيهَا لَغۡوًا إِلَّا سَلَٰمٗاۖ وَلَهُمۡ
رِزۡقُهُمۡ فِيهَا بُكۡرَةٗ وَعَشِيّٗا ٦٢

៦២-ដោយពួកគេមិនឮអ្វីដែលឥតប្រយោជន៍នៅក្នុងនោះឡើយគឺមានតែពាក្យគោរពជូនពរ"សិរីសួស្តី"ប៉ុណ្ណោះ។ ហើយនៅក្នុងនោះពួកគេមានចំណីអាហាររបស់ពួកគេ(តាមសេចក្តីប្រាថ្នា) ទាំងព្រឹកទាំងល្ងាច។

تِلۡكَ ٱلۡجَنَّةُ ٱلَّتِي نُورِثُ مِنۡ عِبَادِنَا مَن كَانَ
تَقِيّٗا ٦٣

៦៣-ឋានសួគ៌នោះហើយ ដែលយើងនឹងប្រទានជាមរតកឱ្យអ្នកណាដែលកោតខ្លាចយើងក្នុងចំណោមខ្ញុំទាំងអស់របស់យើង។

وَمَا نَتَنَزَّلُ إِلَّا بِأَمۡرِ رَبِّكَۖ لَهُۥ مَا بَيۡنَ أَيۡدِينَا
وَمَا خَلۡفَنَا وَمَا بَيۡنَ ذَٰلِكَۚ وَمَا كَانَ رَبُّكَ
نَسِيّٗا ٦٤

៦៤-ហើយយើង(ជីព្រីល) មិនអាចចុះ(ពីលើមេឃដោយពាំនាំមកឱ្យអ្នកនូវរឿងរ៉ាវទាំងនេះ) ទេ លើកលែងតែតាមការបញ្ជានៃម្ចាស់របស់អ្នក(មូហាំម៉ាត់) ប៉ុណ្ណោះ។ អ្វីៗដែលនៅខាងមុខយើង(នាថ្ងៃបរលោក) និងអ្វីៗដែលនៅខាងក្រោយយើង(នៅក្នុងលោកិយ) ហើយនិងអ្វីៗដែលនៅចន្លោះទាំងពីរនោះគឺជាកម្មសិទ្ធិរបស់ទ្រង់។ ហើយម្ចាស់របស់អ្នកគឺមិនដែលភ្លេចឡើយ។

رَّبُّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَمَا بَيۡنَهُمَا
فَٱعۡبُدۡهُ وَٱصۡطَبِرۡ لِعِبَٰدَتِهِۦۚ هَلۡ تَعۡلَمُ
لَهُۥ سَمِيّٗا ٦٥

៦៥-ទ្រង់ជាម្ចាស់នៃមេឃជាច្រើនជាន់ និងផែនដី ព្រមទាំងអ្វីៗដែលនៅចន្លោះវាទាំងពីរ។ ដូច្នេះ ចូរអ្នក(មូហាំម៉ាត់) គោរពសក្ការៈចំពោះទ្រង់ និងទ្រាំអត់ធ្មត់ក្នុងការគោរពសក្ការៈចំពោះទ្រង់។ តើអ្នកដឹងទេថា មានអ្នកណាដែលមានឈ្មោះដូចទ្រង់នោះ?

وَيَقُولُ ٱلۡإِنسَٰنُ أَءِذَا مَا مِتُّ لَسَوۡفَ أُخۡرَجُ
حَيًّا ٦٦

៦៦-ហើយមនុស្ស(គ្មានជំនឿ) បែរជាសួរថា: តើនៅពេលដែលខ្ញុំបានស្លាប់ទៅ ខ្ញុំនឹងត្រូវគេធ្វើឱ្យរស់ឡើងវិញមែនឬ?

أَوَلَا يَذۡكُرُ ٱلۡإِنسَٰنُ أَنَّا خَلَقۡنَٰهُ مِن قَبۡلُ
وَلَمۡ يَكُ شَيۡـٔٗا ٦٧

៦៧-តើមនុស្សលោក(អ្នកគ្មានជំនឿ) មិននឹកឃើញទេឬថា ពិតប្រាកដណាស់ យើងបានបង្កើតគេកាលពីមុន ដោយគេមិនទាន់មានអ្វីសោះនោះ?

فَوَرَبِّكَ لَنَحۡشُرَنَّهُمۡ وَٱلشَّيَٰطِينَ ثُمَّ
لَنُحۡضِرَنَّهُمۡ حَوۡلَ جَهَنَّمَ جِثِيّٗا ٦٨

៦៨-ហើយម្ចាស់របស់អ្នកបានស្បថថា: យើងនឹងប្រមូលផ្តុំពួកគេទាំងនោះជាមួយពួកស្ហេតន បន្ទាប់មកយើងនឹងនាំពួកគេមកលុតជង្គង់នៅជុំវិញនរកជើហាន់ណាំ។

ثُمَّ لَنَنزِعَنَّ مِن كُلِّ شِيعَةٍ أَيُّهُمۡ أَشَدُّ عَلَى
ٱلرَّحۡمَٰنِ عِتِيًّا ٦٩

៦៩-បន្ទាប់មក យើងពិតជានឹងដកយកអ្នកណាដែលប្រឆាំងនឹងម្ចាស់មហាសប្បុរសខ្លាំងជាងគេពីគ្រប់ៗក្រុម( មកធ្វើទារុណកម្មមុនគេ) ។

ثُمَّ لَنَحۡنُ أَعۡلَمُ بِٱلَّذِينَ هُمۡ أَوۡلَىٰ
بِهَا صِلِيًّا ٧٠

៧០-ក្រោយមក យើងពិតជាដឹងបំផុតចំពោះពួកដែលសក្តិសមត្រូវចូលនរកមុនគេ ។

وَإِن مِّنكُمۡ إِلَّا وَارِدُهَاۚ كَانَ عَلَىٰ رَبِّكَ حَتۡمًا
مَّقۡضِيًّا ٧١

៧១-ហើយក្នុងចំណោមពួកអ្នក គ្មានអ្នកណាម្នាក់អាចគេចផុតពីការឆ្លងវា( ស្ពាននរក) បានឡើយ ។ ( ការឆ្លងស្ពាននរកនេះ) គឺត្រូវបានសម្រេចយ៉ាងដាច់ខាតពីម្ចាស់របស់អ្នក ។

ثُمَّ نُنَجِّي ٱلَّذِينَ ٱتَّقَواْ وَّنَذَرُ ٱلظَّٰلِمِينَ
فِيهَا جِثِيًّا ٧٢

៧២-បន្ទាប់មក យើងនឹងសង្គ្រោះបណ្តាអ្នកដែលបានកោតខ្លាចយើង ហើយយើងទុកឱ្យពួកដែលបំពានលុតជង្គង់ក្នុងវា( នរក) ។

وَإِذَا تُتۡلَىٰ عَلَيۡهِمۡ ءَايَٰتُنَا بَيِّنَٰتٖ قَالَ ٱلَّذِينَ
كَفَرُواْ لِلَّذِينَ ءَامَنُوٓاْ أَيُّ ٱلۡفَرِيقَيۡنِ خَيۡرٞ
مَّقَامٗا وَأَحۡسَنُ نَدِيّٗا ٧٣

៧៣-ហើយនៅពេលដែលមានគេសូត្រអាយ៉ាត់ៗរបស់យើងឱ្យពួកគេស្តាប់យ៉ាងច្បាស់លាស់ ពួកគ្មានជំនឿ( អ្នកមានអំណាច និងមានទ្រព្យសម្បត្តិក្នុងចំណោមអារ៉ាប់កូរ៉ៃស្ហ) បាននិយាយទៅកាន់បណ្តាអ្នកដែលមានជំនឿ( អ្នកក្រីក្រគ្មានអំណាច និងអ្នកដើរតាមមូហាំម៉ាត់) ថា: តើក្រុមណាមួយនៃក្រុមទាំងពីរដែលមានឋានៈ និងមានកន្លែងរស់នៅល្អ និងកន្លែងជួបជុំ( ក្រុមប្រឹក្សា) ល្អជាងគេ?

وَكَمۡ أَهۡلَكۡنَا قَبۡلَهُم مِّن قَرۡنٍ هُمۡ أَحۡسَنُ أَثَٰثٗا
وَرِءۡيٗا ٧٤

៧៤-ហើយយើងបានបំផ្លាញមុនពួកគេ( ពួកគ្មានជំនឿអារ៉ាប់កូរ៉ៃស្ហ) អស់ជាច្រើនជំនាន់មកហើយ ដែលពួកទាំងនោះមានទ្រព្យសម្បត្តិ និងរូបសម្បត្តិល្អប្រសើរជាង( ពួកនេះទៅទៀត) ។

قُلۡ مَن كَانَ فِي ٱلضَّلَٰلَةِ فَلۡيَمۡدُدۡ لَهُ ٱلرَّحۡمَٰنُ
مَدًّاۚ حَتَّىٰٓ إِذَا رَأَوۡاْ مَا يُوعَدُونَ إِمَّا ٱلۡعَذَابَ
وَإِمَّا ٱلسَّاعَةَ فَسَيَعۡلَمُونَ مَنۡ هُوَ شَرّٞ
مَّكَانٗا وَأَضۡعَفُ جُندٗا ٧٥

៧៥-ចូរអ្នក( មូហាំម៉ាត់) ពោលថា: អ្នកណាហើយដែលស្ថិតក្នុងភាពវង្វេង គឺម្ចាស់មហាសប្បុរសនឹងពន្យារពេលឱ្យគេកាន់តែវង្វេងថែមទៀត រហូតដល់ពេលពួកគេបានឃើញនូវអ្វីដែលគេ( អល់ឡោះ) បានសន្យាជាមួយពួកគេ( ពួកគ្មានជំនឿ) អាចជាទារុណកម្ម( នៅក្នុងលោកិយ) ឬនៅថ្ងៃបរលោក ។ ដូច្នេះ ពួកគេនឹងដឹងថា អ្នកណាដែលស្ថិតនៅក្នុងសភាពអាក្រក់ និងមានកម្លាំងពលំខ្សោយជាង ។

وَيَزِيدُ ٱللَّهُ ٱلَّذِينَ ٱهۡتَدَوۡاْ هُدٗىۗ وَٱلۡبَٰقِيَٰتُ ٱلصَّٰلِحَٰتُ خَيۡرٌ عِندَ رَبِّكَ ثَوَابٗا وَخَيۡرٞ مَّرَدًّا ﴿٧٦﴾

៧៦-ហើយអល់ឡោះនឹងបន្ថែមដល់បណ្ដាអ្នកដែលបានទទួលការចង្អុលបង្ហាញនូវការចង្អុលបង្ហាញថែមទៀត ។ ប៉ុន្ដែអំពើល្អដែលស្ថិតនៅជានិរន្តរ៍នោះ គឺល្អប្រសើរចំពោះម្ចាស់របស់អ្នកក្នុងការផ្ដល់ផលបុណ្យនិងជាកន្លែងវិលត្រឡប់ដ៏ប្រពៃ ។

أَفَرَءَيۡتَ ٱلَّذِي كَفَرَ بِـَٔايَٰتِنَا وَقَالَ لَأُوتَيَنَّ مَالٗا وَوَلَدًا ﴿٧٧﴾

៧៧-តើអ្នកបានឃើញអ្នកដែលបានប្រឆាំងនឹងអាយ៉ាត់ៗរបស់យើង ហើយគេបាននិយាយថាៈ ខ្ញុំពិតជានឹងត្រូវគេផ្ដល់ឱ្យនូវទ្រព្យសម្បត្តិ និងកូនចៅ(នៅថ្ងៃបរលោក)ដែរឬទេ?

أَطَّلَعَ ٱلۡغَيۡبَ أَمِ ٱتَّخَذَ عِندَ ٱلرَّحۡمَٰنِ عَهۡدٗا ﴿٧٨﴾

៧៨-តើគេបានដឹងនូវរឿងអាថ៌កំបាំង ឬមួយគេបានទទួលយកការសន្យាណាមួយពីម្ចាស់មហាសប្បុរសឬ?

كَلَّاۚ سَنَكۡتُبُ مَا يَقُولُ وَنَمُدُّ لَهُۥ مِنَ ٱلۡعَذَابِ مَدّٗا ﴿٧٩﴾

៧៩-មិនដូច្នោះទេ យើងនឹងកត់ត្រាទុកនូវអ្វីដែលគេនិយាយ ហើយយើងនឹងបន្ថែមឱ្យគេនូវទារុណកម្មដ៏យូរអង្វែងថែមទៀត ។

وَنَرِثُهُۥ مَا يَقُولُ وَيَأۡتِينَا فَرۡدٗا ﴿٨٠﴾

៨០-ហើយយើងនឹងយកមរតកពីគេ(ពេលគេស្លាប់)ចំពោះអ្វីដែលគេបាននិយាយថា(មានទ្រព្យសម្បត្តិ និងកូនចៅ)ហើយគេនឹងត្រឡប់មករកយើងវិញដោយខ្លួនទទេ ។

وَٱتَّخَذُواْ مِن دُونِ ٱللَّهِ ءَالِهَةٗ لِّيَكُونُواْ لَهُمۡ عِزّٗا ﴿٨١﴾

៨១-ហើយពួកគេបានយកព្រះនានាមកគោរពសក្ការៈផ្សេងពីអល់ឡោះ ដើម្បីឱ្យព្រះទាំងនោះការពារពួកគេ ។

كَلَّاۚ سَيَكۡفُرُونَ بِعِبَادَتِهِمۡ وَيَكُونُونَ عَلَيۡهِمۡ ضِدًّا ﴿٨٢﴾

៨២-មិនដូច្នោះទេ ផ្ទុយទៅវិញព្រះទាំងនោះនឹងបដិសេធនឹងការគោរពសក្ការៈរបស់ពួកគេ ហើយព្រះទាំងនោះនឹងក្លាយទៅជាសត្រូវនឹងពួកគេវិញ(នៅថ្ងៃបរលោក) ។

أَلَمۡ تَرَ أَنَّآ أَرۡسَلۡنَا ٱلشَّيَٰطِينَ عَلَى ٱلۡكَٰفِرِينَ تَؤُزُّهُمۡ أَزّٗا ﴿٨٣﴾

៨៣-តើអ្នកមិនបានឃើញទេឬ យើងបានបញ្ជូនពួកស្ហៃតនទៅចំពោះពួកប្រឆាំង ដើម្បីបង្វក់ពួកគេ(ឱ្យប្រព្រឹត្តអំពើអាក្រក់ និងស្ថិតក្នុងភាពវង្វេង)នោះ?

فَلَا تَعۡجَلۡ عَلَيۡهِمۡۖ إِنَّمَا نَعُدُّ لَهُمۡ عَدّٗا ﴿٨٤﴾

៨៤-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)កុំប្រញាប់(សុំឱ្យយើងធ្វើទារុណកម្ម)ចំពោះពួកគេឱ្យសោះ ។ តាមពិតយើងគ្រាន់តែគិតគូពេលវេលាឱ្យបានច្បាស់លាស់សម្រាប់ពួកគេប៉ុណ្ណោះ ។

៨៥-នៅថ្ងៃដែលយើងនឹងប្រមូលផ្តុំបណ្តាអ្នកដែលកោតខ្លាចទៅ
កាន់ម្ចាស់មហាសប្បុរសជាភ្ញៀវកិត្តិយស ។

يَوۡمَ نَحۡشُرُ ٱلۡمُتَّقِينَ إِلَى ٱلرَّحۡمَٰنِ وَفۡدٗا ٨٥

៨៦-ហើយយើងនឹងគៀងពួកដែលប្រព្រឹត្តអំពើអាក្រក់ទៅកាន់
នរកជើហាន់ណាំ ដោយពួកគេស្រេកឃ្លានយ៉ាងខ្លាំង ។

وَنَسُوقُ ٱلۡمُجۡرِمِينَ إِلَىٰ جَهَنَّمَ وِرۡدٗا ٨٦

៨៧-ពួកគេ(ពួកគ្មានជំនឿ)គ្មានសិទ្ធិទទួលការអន្តរាគមន៍
ឡើយ លើកលែងតែអ្នកដែលបានទទួលយកការសន្យាពីម្ចាស់
មហាសប្បុរសប៉ុណ្ណោះ ។

لَّا يَمۡلِكُونَ ٱلشَّفَٰعَةَ إِلَّا مَنِ ٱتَّخَذَ عِندَ
ٱلرَّحۡمَٰنِ عَهۡدٗا ٨٧

៨៨-ហើយពួកគេបាននិយាយថា: ម្ចាស់មហាសប្បុរសមាន
បុត្រ ។

وَقَالُواْ ٱتَّخَذَ ٱلرَّحۡمَٰنُ وَلَدٗا ٨٨

៨៩-ជាការពិតណាស់ ពួកអ្នកបាននាំមកនូវប្រការមួយអាក្រក់
បំផុត ។

لَّقَدۡ جِئۡتُمۡ شَيۡـًٔا إِدّٗا ٨٩

៩០-ដោយពាក្យសំដីនេះ ធ្វើឱ្យមេឃជាច្រើនជាន់ស្ទើរតែប្រេះ
បែក និងផែនដីស្ទើរតែបែកខ្ទេចខ្ទី និងភ្នំទាំងឡាយស្ទើរតែរលំ
រលាយ ។

تَكَادُ ٱلسَّمَٰوَٰتُ يَتَفَطَّرۡنَ مِنۡهُ وَتَنشَقُّ
ٱلۡأَرۡضُ وَتَخِرُّ ٱلۡجِبَالُ هَدًّا ٩٠

៩១-ដោយពួកគេបានចោទប្រកាន់ថា: ម្ចាស់មហាសប្បុរស
មានបុត្រ ។

أَن دَعَوۡاْ لِلرَّحۡمَٰنِ وَلَدٗا ٩١

៩២-ហើយមិនសក្តិសមទេ ដែលថាម្ចាស់មហាសប្បុរស
មានបុត្រនោះ ។

وَمَا يَنۢبَغِي لِلرَّحۡمَٰنِ أَن يَتَّخِذَ وَلَدًا ٩٢

៩៣-រាល់អ្នកដែលនៅលើមេឃជាច្រើនជាន់ និងផែនដីគឺត្រូវ
តែត្រឡប់ទៅកាន់ម្ចាស់មហាសប្បុរសក្នុងលក្ខណៈជាខ្ញុំរបស់ទ្រង់ ។

إِن كُلُّ مَن فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ إِلَّآ
ءَاتِي ٱلرَّحۡمَٰنِ عَبۡدٗا ٩٣

៩៤-ជាការពិតណាស់ ទ្រង់បានដឹងពីចំនួនពួកគេ និងបានរាប់
ចំនួនពួកគេយ៉ាងច្បាស់លាស់ ។

لَّقَدۡ أَحۡصَىٰهُمۡ وَعَدَّهُمۡ عَدّٗا ٩٤

៩៥-ហើយពួកគេទាំងអស់នឹងត្រឡប់ទៅកាន់ទ្រង់វិញនៅថ្ងៃ
បរលោករៀងៗខ្លួន ។

وَكُلُّهُمۡ ءَاتِيهِ يَوۡمَ ٱلۡقِيَٰمَةِ فَرۡدًا ٩٥

៩៦-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿ និងបានសាង
អំពើល្អ ម្ចាស់មហាសប្បុរសនឹងផ្តល់ក្តីអាណិតស្រឡាញ់ដល់ពួកគេ ។

إِنَّ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ
سَيَجۡعَلُ لَهُمُ ٱلرَّحۡمَٰنُ وُدّٗا ٩٦

៩៧-ដូច្នេះ ពិតប្រាកដណាស់ យើងបានសម្រួលវា(គម្ពីរគួរអាន) ជាភាសារបស់អ្នក(មូហាំម៉ាត់) ដើម្បីអ្នកនឹងផ្ដល់ដំណឹងរីករាយដល់បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ និងដាស់តឿនព្រមានដល់ក្រុមដែលពូកែឈ្លោះប្រកែកគ្នាតាមរយៈវា។

فَإِنَّمَا يَسَّرۡنَٰهُ بِلِسَانِكَ لِتُبَشِّرَ بِهِ ٱلۡمُتَّقِينَ وَتُنذِرَ بِهِۦ قَوۡمٗا لُّدّٗا ﴿٩٧﴾

៩៨-ហើយយើងបានបំផ្លាញអស់ជាច្រើនជំនាន់មកហើយមុនពួកគេ(មូស្ហរិគីនម៉ាក្កះ) តើអ្នក(មូហាំម៉ាត់)ឃើញអ្នកណាម្នាក់ក្នុងចំណោមពួកគេ ឬឮសំឡេងខ្សឹបខ្សៀវពីពួកគេដែរឬទេ?

وَكَمۡ أَهۡلَكۡنَا قَبۡلَهُم مِّن قَرۡنٍ هَلۡ تُحِسُّ مِنۡهُم مِّنۡ أَحَدٍ أَوۡ تَسۡمَعُ لَهُمۡ رِكۡزَۢا ﴿٩٨﴾

## ជំពូក តហា

## سورة طه

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-ត ហា

طه ﴿١﴾

២-យើងមិនបានបញ្ចុះគម្ពីរគួរអានទៅឱ្យអ្នក ដើម្បីឱ្យអ្នកលំបាកនោះឡើយ។

مَآ أَنزَلۡنَا عَلَيۡكَ ٱلۡقُرۡءَانَ لِتَشۡقَىٰٓ ﴿٢﴾

៣-លើកលែងតែជាការរំលឹកដល់អ្នកណាដែលកោតខ្លាចអល់ឡោះប៉ុណ្ណោះ។

إِلَّا تَذۡكِرَةٗ لِّمَن يَخۡشَىٰ ﴿٣﴾

៤-(គម្ពីរគួរអាននេះ)គឺជាការបញ្ចុះមកពីម្ចាស់ដែលបានបង្កើតផែនដី និងមេឃជាច្រើនជាន់ដែលខ្ពស់បំផុត។

تَنزِيلٗا مِّمَّنۡ خَلَقَ ٱلۡأَرۡضَ وَٱلسَّمَٰوَٰتِ ٱلۡعُلَى ﴿٤﴾

៥-ទ្រង់ជាម្ចាស់មហាសប្បុរសនៅលើអារ៉ស្ហ។

ٱلرَّحۡمَٰنُ عَلَى ٱلۡعَرۡشِ ٱسۡتَوَىٰ ﴿٥﴾

៦-អ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងផែនដី និងអ្វីៗដែលនៅចន្លោះវាទាំងពីរ ព្រមទាំងអ្វីៗដែលនៅក្រោមដី គឺជាកម្មសិទ្ធិរបស់ទ្រង់។

لَهُۥ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِ وَمَا بَيۡنَهُمَا وَمَا تَحۡتَ ٱلثَّرَىٰ ﴿٦﴾

៧-ហើយប្រសិនបើអ្នក(មូហាំម៉ាត់)បញ្ចេញសំឡេង(បួងសួងសុំ ឬរំលឹកឈ្មោះអល់ឡោះ)ខ្លាំងៗ គឺពិតប្រាកដណាស់ ទ្រង់ដឹងការសម្ងាត់ និងអ្វីដែលអាថិកំបាំងបំផុត។

وَإِن تَجۡهَرۡ بِٱلۡقَوۡلِ فَإِنَّهُۥ يَعۡلَمُ ٱلسِّرَّ وَأَخۡفَى ﴿٧﴾

៨-អល់ឡោះគឺជាម្ចាស់ដែលគ្មានម្ចាស់ណាផ្សេងត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ។ ទ្រង់មានឈ្មោះជាច្រើនដ៏

ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَۖ لَهُ ٱلۡأَسۡمَآءُ ٱلۡحُسۡنَىٰ ﴿٨﴾

ល្អប្រពៃ។

៩-តើរឿងរបស់មូសាបានមកដល់អ្នកហើយឬនៅ?

وَهَلۡ أَتَىٰكَ حَدِيثُ مُوسَىٰٓ ۝٩

១០-នៅពេលដែល(មូសាធ្វើដំណើរ)គាត់បានឃើញពន្លឺភ្លើងមួយ ហើយគាត់បានពោលទៅកាន់គ្រួសាររបស់គាត់ថាៈ ចូរពួកអ្នកនៅទីនេះសិនចុះ ពិតប្រាកដណាស់ខ្ញុំបានឃើញពន្លឺភ្លើងមួយ សង្ឃឹមថាខ្ញុំនឹងយកភ្លើងមួយដុំមកបង្កាត់ឱ្យពួកអ្នក ឬក៏ខ្ញុំនឹងជួបការចង្អុលបង្ហាញនៅកន្លែងពន្លឺភ្លើងនោះ។

إِذۡ رَءَا نَارٗا فَقَالَ لِأَهۡلِهِ ٱمۡكُثُوٓاْ إِنِّيٓ ءَانَسۡتُ نَارٗا لَّعَلِّيٓ ءَاتِيكُم مِّنۡهَا بِقَبَسٍ أَوۡ أَجِدُ عَلَى ٱلنَّارِ هُدٗى ۝١٠

១១-ហើយនៅពេលដែលគាត់បានទៅដល់ពន្លឺភ្លើងនោះ គេបានហៅគាត់ថាៈ ឱមូសា!

فَلَمَّآ أَتَىٰهَا نُودِيَ يَٰمُوسَىٰٓ ۝١١

១២-ពិតប្រាកដណាស់ យើងគឺជាម្ចាស់របស់អ្នក! ដូច្នេះ ចូរអ្នកដោះស្បែកជើងទាំងពីររបស់អ្នកចេញ។ ពិតប្រាកដណាស់ អ្នកស្ថិតក្នុងជ្រលងទូវ៉ាដ៏ពិសិដ្ឋ។

إِنِّيٓ أَنَا۠ رَبُّكَ فَٱخۡلَعۡ نَعۡلَيۡكَ إِنَّكَ بِٱلۡوَادِ ٱلۡمُقَدَّسِ طُوٗى ۝١٢

១៣-ហើយយើងបានជ្រើសរើសអ្នក(ដើម្បីទៅអំពាវនាវហ្សៀវអោន)។ ដូច្នេះ ចូរអ្នកស្ដាប់នូវអ្វីដែលគេនឹងផ្ដល់វ៉ាហ៊ីចុះ។

وَأَنَا ٱخۡتَرۡتُكَ فَٱسۡتَمِعۡ لِمَا يُوحَىٰٓ ۝١٣

១៤-ពិតប្រាកដណាស់ យើងគឺជាអល់ឡោះ ដែលគ្មានម្ចាស់ណាផ្សេងត្រូវគេគោរពសក្ការៈពិតប្រាកដក្រៅពីយើងឡើយ។ ដូច្នេះ ចូរអ្នកគោរពសក្ការៈមកចំពោះយើង និងត្រូវប្រតិបត្តិសឡាតដើម្បីជាការរំលឹកដល់យើង។

إِنَّنِيٓ أَنَا ٱللَّهُ لَآ إِلَٰهَ إِلَّآ أَنَا۠ فَٱعۡبُدۡنِي وَأَقِمِ ٱلصَّلَوٰةَ لِذِكۡرِيٓ ۝١٤

១៥-ពិតប្រាកដណាស់ ថ្ងៃបរលោកនឹងមកដល់ យើងស្ទើរតែលាក់បាំងវា ដើម្បីគេនឹងតបស្នងឱ្យរាល់ៗរូបនូវអ្វីដែលគេកំពុងខំប្រឹងប្រែង។

إِنَّ ٱلسَّاعَةَ ءَاتِيَةٌ أَكَادُ أُخۡفِيهَا لِتُجۡزَىٰ كُلُّ نَفۡسِۭ بِمَا تَسۡعَىٰ ۝١٥

១៦-ដូច្នេះ ចូរកុំបណ្ដោយឱ្យអ្នកដែលគ្មានជំនឿនឹងវា(ថ្ងៃបរលោក) និងអ្នកដែលបានធ្វើតាមចំណង់ចិត្តរបស់គេមករារាំងអ្នក(មូសា)អំពីវា(ជំនឿនឹងថ្ងៃបរលោក) ដែលជាហេតុធ្វើឱ្យអ្នកវិនាសអន្តរាយឱ្យសោះ។

فَلَا يَصُدَّنَّكَ عَنۡهَا مَن لَّا يُؤۡمِنُ بِهَا وَٱتَّبَعَ هَوَىٰهُ فَتَرۡدَىٰ ۝١٦

១៧-តើអ្វីទៅនៅក្នុងដៃស្ដាំរបស់អ្នកនោះ ឱមូសា?

وَمَا تِلۡكَ بِيَمِينِكَ يَٰمُوسَىٰ ۝١٧

១៨-គាត់បានពោលថាៈ វាគឺជាដំបងរបស់ខ្ញុំ ដែលខ្ញុំទប់ជំហរនឹងវា ហើយខ្ញុំអង្រួន(ស្លឹកឈើ) នឹងវាឱ្យពពែរបស់ខ្ញុំ ហើយនិងសម្រាប់ប្រើវាជាផលប្រយោជន៍ផ្សេងៗទៀត។

قَالَ هِيَ عَصَايَ أَتَوَكَّؤُاْ عَلَيۡهَا وَأَهُشُّ بِهَا
عَلَىٰ غَنَمِي وَلِيَ فِيهَا مَـَٔارِبُ أُخۡرَىٰ ١٨

១៩-ទ្រង់បានមានបន្ទូលថាៈ ចូរអ្នកបោះវាចុះ ឱមូសា!

قَالَ أَلۡقِهَا يَٰمُوسَىٰ ١٩

២០-ហើយគាត់ក៏បានបោះវា រំពេចនោះដំបងបានក្លាយទៅជាសត្វពស់មួយវារយ៉ាងរហ័ស។

فَأَلۡقَىٰهَا فَإِذَا هِيَ حَيَّةٞ تَسۡعَىٰ ٢٠

២១-ទ្រង់បានមានបន្ទូលថាៈ ចូរអ្នកចាប់យកវាមកវិញ ហើយសូមអ្នកកុំខ្លាច យើងនឹងធ្វើឱ្យវាប្រែទៅជារូបភាពដើមវិញ។

قَالَ خُذۡهَا وَلَا تَخَفۡۖ سَنُعِيدُهَا سِيرَتَهَا
ٱلۡأُولَىٰ ٢١

២២-ហើយចូរអ្នកយកដៃ(ស្តាំ) របស់អ្នកដាក់ចូលទៅចំហៀងខ្លួន(ខាងឆ្វេង) របស់អ្នក វានឹងចេញពន្លឺសចែងចាំងដោយមិនមែនជាប្រការអាក្រក់ឡើយ តែវាជាមុជីហ្សាត់មួយផ្សេងទៀត។

وَٱضۡمُمۡ يَدَكَ إِلَىٰ جَنَاحِكَ تَخۡرُجۡ بَيۡضَآءَ
مِنۡ غَيۡرِ سُوٓءٍ ءَايَةً أُخۡرَىٰ ٢٢

២៣-ដើម្បីយើងនឹងបង្ហាញអ្នក ពីភស្តុតាងៗរបស់យើងមួយចំនួនដ៏ធំអស្ចារ្យ។

لِنُرِيَكَ مِنۡ ءَايَٰتِنَا ٱلۡكُبۡرَى ٢٣

២៤-ចូរអ្នកទៅកាន់ហ្វៀរអោន! ពិតប្រាកដណាស់ គេគឺជាអ្នកដែលបានបំពាន(គ្មានជំនឿ ផ្តាច់ការ) ។

ٱذۡهَبۡ إِلَىٰ فِرۡعَوۡنَ إِنَّهُۥ طَغَىٰ ٢٤

២៥-គាត់បានពោលថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាបំភ្លឺចិត្តរបស់ខ្ញុំ(ឱ្យមានទំនុកចិត្តខ្លួនឯង និងមានភាពក្លាហាន) ផង។

قَالَ رَبِّ ٱشۡرَحۡ لِي صَدۡرِي ٢٥

២៦-ហើយសូមទ្រង់មេត្តាសម្រួលកិច្ចការរបស់ខ្ញុំឱ្យងាយស្រួលដល់ខ្ញុំផង។

وَيَسِّرۡ لِيٓ أَمۡرِي ٢٦

២៧-ហើយសូមទ្រង់មេត្តាស្រាយចំណងពីអណ្តាតរបស់ខ្ញុំ(ឱ្យនិយាយច្បាស់ និងប៉ិនប្រសប់) ផង។

وَٱحۡلُلۡ عُقۡدَةٗ مِّن لِّسَانِي ٢٧

២៨-ដើម្បីឱ្យពួកគេងាយយល់ពាក្យសំដីរបស់ខ្ញុំ។

يَفۡقَهُواْ قَوۡلِي ٢٨

២៩-ហើយសូមទ្រង់មេត្តាតែងតាំងជំនួយការម្នាក់អំពីគ្រួសាររបស់ខ្ញុំឱ្យខ្ញុំផង។

وَٱجۡعَل لِّي وَزِيرٗا مِّنۡ أَهۡلِي ٢٩

៣០-គឺហារូនជាបងប្រុសរបស់ខ្ញុំ។

هَٰرُونَ أَخِي ٣٠

ٱشۡدُدۡ بِهِۦٓ أَزۡرِي ٣١

៣១-សូមទ្រង់មេត្តាពង្រឹងកម្លាំងខ្ញុំនឹងគាត់ផង។

وَأَشۡرِكۡهُ فِيٓ أَمۡرِي ٣٢

៣២-ហើយសូមទ្រង់មេត្តាធ្វើឱ្យគាត់រួមសហការក្នុងកិច្ចការរបស់ខ្ញុំផង(ការផ្សព្វផ្សាយសាររបស់អល់ឡោះ)។

كَيۡ نُسَبِّحَكَ كَثِيرٗا ٣٣

៣៣-ដើម្បីឱ្យពួកយើងលើកតម្កើងទ្រង់បានកាន់តែច្រើន។

وَنَذۡكُرَكَ كَثِيرًا ٣٤

៣៤-ហើយនិងរំលឹកដល់ទ្រង់ឱ្យបានកាន់តែច្រើន។

إِنَّكَ كُنتَ بِنَا بَصِيرٗا ٣٥

៣៥-ពិតប្រាកដណាស់ ទ្រង់ជាអ្នកឃើញបំផុតចំពោះពួកយើង។

قَالَ قَدۡ أُوتِيتَ سُؤۡلَكَ يَٰمُوسَىٰ ٣٦

៣៦-ទ្រង់បានមានបន្ទូលថា: ជាការពិតណាស់ អ្នកត្រូវបានគេប្រទានឱ្យតាមសំណើររបស់អ្នក ឱមូសា!

وَلَقَدۡ مَنَنَّا عَلَيۡكَ مَرَّةً أُخۡرَىٰٓ ٣٧

៣៧-ហើយជាការពិតណាស់ យើងបានប្រទានឡៀកម៉ាត់ឱ្យអ្នកម្តងទៀត។

إِذۡ أَوۡحَيۡنَآ إِلَىٰٓ أُمِّكَ مَا يُوحَىٰٓ ٣٨

៣៨-នៅពេលដែលយើងបានផ្តល់ប្រផ្នូលមួយទៅកាន់ម្តាយរបស់អ្នកឱ្យដឹង។

أَنِ ٱقۡذِفِيهِ فِي ٱلتَّابُوتِ فَٱقۡذِفِيهِ فِي ٱلۡيَمِّ فَلۡيُلۡقِهِ ٱلۡيَمُّ بِٱلسَّاحِلِ يَأۡخُذۡهُ عَدُوّٞ لِّي وَعَدُوّٞ لَّهُۥۚ وَأَلۡقَيۡتُ عَلَيۡكَ مَحَبَّةٗ مِّنِّي وَلِتُصۡنَعَ عَلَىٰ عَيۡنِيٓ ٣٩

៣៩-ចូរអ្នក(ម្តាយ)ដាក់គេ(មូសា)ចូលទៅក្នុងហិប ហើយដាក់ហិបនោះទៅក្នុងទន្លេ(ទន្លេនីលនៅអេហ្ស៊ីប) ពេលនោះទន្លេនឹងនាំគេទៅកាន់មាត់ច្រាំង ដើម្បីឱ្យសត្រូវរបស់យើង និងសត្រូវរបស់គេរើសយកគេ(ទៅចិញ្ចឹម)។ ហើយយើងបានផ្តល់ឱ្យអ្នកនូវសេចក្តីស្រឡាញ់ពីយើង និងដើម្បីឱ្យគេចិញ្ចឹមបីបាច់ថែរក្សាអ្នកក្រោមក្រសែភ្នែករបស់យើង។

إِذۡ تَمۡشِيٓ أُخۡتُكَ فَتَقُولُ هَلۡ أَدُلُّكُمۡ عَلَىٰ مَن يَكۡفُلُهُۥۖ فَرَجَعۡنَٰكَ إِلَىٰٓ أُمِّكَ كَيۡ تَقَرَّ عَيۡنُهَا وَلَا تَحۡزَنَۚ وَقَتَلۡتَ نَفۡسٗا فَنَجَّيۡنَٰكَ مِنَ ٱلۡغَمِّ وَفَتَنَّٰكَ فُتُونٗاۚ فَلَبِثۡتَ سِنِينَ فِيٓ أَهۡلِ مَدۡيَنَ ثُمَّ جِئۡتَ عَلَىٰ قَدَرٖ يَٰمُوسَىٰ ٤٠

៤០-នៅពេលដែលបងស្រីរបស់អ្នកដើរ(តាមឃ្លាំមើលហិបនោះ) ហើយនាងក៏និយាយថា: តើចង់ឱ្យខ្ញុំចង្អុលប្រាប់ពួកអ្នកអំពីអ្នកដែលអាចបំបៅគេបានដែរឬទេ? ពេលនោះយើង(អល់ឡោះ)បានប្រគល់អ្នក(មូសា)ឱ្យទៅម្តាយរបស់អ្នកវិញ ដើម្បីឱ្យនាងរំភើបរីករាយ និងឈប់ព្រួយបារម្ភ។ បន្ទាប់មក(ពេលដែលអ្នកធំពេញវ័យ)អ្នកបានសម្លាប់ជីវិតមនុស្សម្នាក់ យើងក៏បានសង្គ្រោះអ្នកពីទុក្ខភ័យ(នៃការតាមចាប់ខ្លួនរបស់ទាហានហ្វៀរអោន) ហើយយើងបានសាកល្បងអ្នកជាច្រើនដង ហើយអ្នកបានរស់នៅ

អស់រយៈកាលជាច្រើនឆ្នាំជាមួយប្រជាជនម៉ាទយ៉ាន់ ។ ក្រោយមក អ្នកបានមក( ជួបយើង) តាមការកំណត់ ឱមូសា!

وَٱصۡطَنَعۡتُكَ لِنَفۡسِي ﴿٤١﴾

៤១-ហើយយើងបានជ្រើសរើសអ្នកសម្រាប់ខ្លួនយើងផ្ទាល់ ( ដើម្បីផ្សព្វផ្សាយសាររបស់យើង) ។

ٱذۡهَبۡ أَنتَ وَأَخُوكَ بِـَٔايَٰتِي وَلَا تَنِيَا فِي ذِكۡرِي ﴿٤٢﴾

៤២-ចូរអ្នកនិងបងប្រុសរបស់អ្នកនាំយកភស្តុតាង១របស់យើង ហើយអ្នកទាំងពីរកុំព្រងើយកន្តើយក្នុងការរំលឹកមកចំពោះយើងឱ្យសោះ ។

ٱذۡهَبَآ إِلَىٰ فِرۡعَوۡنَ إِنَّهُۥ طَغَىٰ ﴿٤٣﴾

៤៣-ចូរអ្នកទាំងពីរទៅកាន់ហ្វៀរអោន ពិតប្រាកដណាស់ គេគឺជាអ្នកដែលបានបំពាន ។

فَقُولَا لَهُۥ قَوۡلٗا لَّيِّنٗا لَّعَلَّهُۥ يَتَذَكَّرُ أَوۡ يَخۡشَىٰ ﴿٤٤﴾

៤៤-ហើយចូរអ្នកទាំងពីរនិយាយទៅកាន់គេ( ហ្វៀរអោន) ដោយពាក្យសំដីទន់ភ្លន់ សង្ឃឹមថាគេនឹងទទួលការដាស់តឿន ឬកោតខ្លាច( អល់ឡោះ) ។

قَالَا رَبَّنَآ إِنَّنَا نَخَافُ أَن يَفۡرُطَ عَلَيۡنَآ أَوۡ أَن يَطۡغَىٰ ﴿٤٥﴾

៤៥-គេទាំងពីរបានពោលទៅកាន់ទ្រង់ថាៈ ឱម្ចាស់របស់យើងខ្ញុំ! ពិតប្រាកដណាស់ ពួកយើងខ្លាចគេ( ហ្វៀរអោន) ដាក់ទណ្ឌកម្ម ឬបំពានមកលើពួកយើងភ្លាម១ ។

قَالَ لَا تَخَافَآۖ إِنَّنِي مَعَكُمَآ أَسۡمَعُ وَأَرَىٰ ﴿٤٦﴾

៤៦-ទ្រង់បានមានបន្ទូលថាៈ ចូរអ្នកទាំងពីរកុំភ័យខ្លាចឱ្យសោះ ។ ពិតប្រាកដណាស់ យើងស្ថិតនៅជាមួយអ្នកទាំងពីរ ដោយយើងឮ និងឃើញ( រាល់សកម្មភាពរបស់អ្នកទាំងពីរ) ។

فَأۡتِيَاهُ فَقُولَآ إِنَّا رَسُولَا رَبِّكَ فَأَرۡسِلۡ مَعَنَا بَنِيٓ إِسۡرَٰٓءِيلَ وَلَا تُعَذِّبۡهُمۡۖ قَدۡ جِئۡنَٰكَ بِـَٔايَةٖ مِّن رَّبِّكَۖ وَٱلسَّلَٰمُ عَلَىٰ مَنِ ٱتَّبَعَ ٱلۡهُدَىٰٓ ﴿٤٧﴾

៤៧-ដូច្នេះ ចូរអ្នកទាំងពីរទៅជួបគេ( ហ្វៀរអោន) ហើយនិយាយប្រាប់គេថាៈ ពិតប្រាកដណាស់ យើងខ្ញុំទាំងពីរគឺជាអ្នកនាំសារនៃម្ចាស់របស់អ្នក ។ ដូច្នេះ សូមអ្នកដោះលែងអំបូរអ៊ីស្រាអែលមកឱ្យយើងខ្ញុំវិញ ហើយសូមអ្នកឈប់ធ្វើទារុណកម្មពួកគេទៀតទៅ ។ ជាការពិតណាស់ យើងបាននាំមកឱ្យអ្នកនូវភស្តុតាងពីម្ចាស់របស់អ្នក ។ ហើយសូមសុខសន្តិភាពកើតមានចំពោះអ្នកណាដែលបានដើរតាមការចង្អុលបង្ហាញនេះ ។

إِنَّا قَدۡ أُوحِيَ إِلَيۡنَآ أَنَّ ٱلۡعَذَابَ عَلَىٰ مَن كَذَّبَ وَتَوَلَّىٰ ﴿٤٨﴾

៤៨-ពិតប្រាកដណាស់ គេបានផ្តល់វ៉ាហ៊ីមកឱ្យយើងយ៉ាងច្បាស់ថាៈ ពិតប្រាកដណាស់ ទារុណកម្មនឹងធ្លាក់លើអ្នកណាដែលបាន

បដិសេធ និងងាកចេញ(ពីការជាស់តឿននេះ) ។

៤៩-គេ(ហ្វៀរអោន) បានតបវិញថា: ហើយតើអ្នកណាជាម្ចាស់របស់អ្នកទាំងពីរ ឱមូសា?

قَالَ فَمَن رَّبُّكُمَا يَـٰمُوسَىٰ ﴿٤٩﴾

៥០-គាត់(មូសា) បានតបថា: ម្ចាស់របស់ពួកយើង គឺជាម្ចាស់ដែលបានប្រទាននូវអ្វីៗគ្រប់បែបយ៉ាងដល់សត្វលោករបស់ទ្រង់ (សមទៅតាមរូបរាងរបស់វា) បន្ទាប់មកទ្រង់បានចង្អុលបង្ហាញ (ពីការរស់នៅ) ។

قَالَ رَبُّنَا ٱلَّذِىٓ أَعۡطَىٰ كُلَّ شَىۡءٍ خَلۡقَهُۥ ثُمَّ هَدَىٰ ﴿٥٠﴾

៥១-គេ(ហ្វៀរអោន) បាននិយាយថា: ហើយចុះរឿងរ៉ាវអ្នកជំនាន់មុនៗនោះយ៉ាងដូចម្ដេចដែរ?

قَالَ فَمَا بَالُ ٱلۡقُرُونِ ٱلۡأُولَىٰ ﴿٥١﴾

៥២-គាត់(មូសា) បានតបថា : ការដឹងពីរឿងរ៉ាវនេះគឺមានតែម្ចាស់របស់ខ្ញុំទេដែលដឹង ដែលមាននៅក្នុងសៀវភៅកំណត់ហេតុ (ឡាវហុលម៉ះហ្វូស) ។ ម្ចាស់របស់ខ្ញុំមិនភាន់ច្រឡំ ហើយក៏មិនភ្លេចភ្លាំងដែរ ។

قَالَ عِلۡمُهَا عِندَ رَبِّى فِى كِتَـٰبٍۖ لَّا يَضِلُّ رَبِّى وَلَا يَنسَى ﴿٥٢﴾

៥៣-ទ្រង់គឺជាម្ចាស់ដែលបានបង្កើតផែនដីរាបស្មើសម្រាប់ពួកអ្នក និងបានធ្វើឱ្យមានផ្លូវជាច្រើនសម្រាប់ពួកអ្នកនៅលើវា ហើយនិងបានបញ្ចុះទឹកភ្លៀងពីលើមេឃ ។ បន្ទាប់មកយើងបានបញ្ចេញនូវរុក្ខជាតិគ្រប់ប្រភេទខុសៗគ្នាដោយសារទឹកភ្លៀងនេះ ។

ٱلَّذِى جَعَلَ لَكُمُ ٱلۡأَرۡضَ مَهۡدًا وَسَلَكَ لَكُمۡ فِيهَا سُبُلًا وَأَنزَلَ مِنَ ٱلسَّمَآءِ مَآءً فَأَخۡرَجۡنَا بِهِۦٓ أَزۡوَٰجًا مِّن نَّبَاتٍ شَتَّىٰ ﴿٥٣﴾

៥៤-ចូរពួកអ្នកទទួលទាន(ចំណីដែលល្អ) និងឃ្វាលសត្វពាហនៈរបស់ពួកអ្នក ។ ពិតប្រាកដណាស់ ក្នុងរឿងនោះគឺជាភស្តុតាងៗសម្រាប់អ្នកដែលមានប្រាជ្ញាឈ្វេងយល់ ។

كُلُواْ وَٱرۡعَوۡاْ أَنۡعَـٰمَكُمۡۗ إِنَّ فِى ذَٰلِكَ لَأَيَـٰتٍ لِّأُوْلِى ٱلنُّهَىٰ ﴿٥٤﴾

៥៥-អំពីដីនេះហើយដែលយើងបានបង្កើតពួកអ្នក ហើយយើងនឹងធ្វើឱ្យពួកអ្នកត្រឡប់ទៅជាដីវិញ(ស្លាប់) ហើយ(នៅថ្ងៃបរលោក) យើងនឹងបញ្ចេញពួកអ្នកពីវាម្ដងទៀត(រស់ឡើងវិញ) ។

۞ مِنۡهَا خَلَقۡنَـٰكُمۡ وَفِيهَا نُعِيدُكُمۡ وَمِنۡهَا نُخۡرِجُكُمۡ تَارَةً أُخۡرَىٰ ﴿٥٥﴾

៥៦-ហើយជាការពិតណាស់ យើងបានបង្ហាញដល់គេ(ហ្វៀរអោន) នូវភស្តុតាងៗរបស់យើង តែគេបែរជាបានបដិសេធ និងបានប្រឆាំងទៅវិញ ។

وَلَقَدۡ أَرَيۡنَـٰهُ ءَايَـٰتِنَا كُلَّهَا فَكَذَّبَ وَأَبَىٰ ﴿٥٦﴾

៥៧-គេ(ហ្វៀរអោន) បាននិយាយថា: តើអ្នកបានមកជួបយើង

قَالَ أَجِئۡتَنَا لِتُخۡرِجَنَا مِنۡ أَرۡضِنَا بِسِحۡرِكَ

يَـٰمُوسَىٰ ﴿٥٧﴾

នេះ ដើម្បីបណ្ដេញយើងចេញពីទឹកដីរបស់យើងដោយមន្តអាគមរបស់អ្នកឬ ឱមូសា?

فَلَنَأْتِيَنَّكَ بِسِحْرٍ مِّثْلِهِۦ فَٱجْعَلْ بَيْنَنَا وَبَيْنَكَ مَوْعِدًا لَّا نُخْلِفُهُۥ نَحْنُ وَلَآ أَنتَ مَكَانًا سُوًى ﴿٥٨﴾

៥៨-ដូច្នេះ យើង(ហ្វៀរអោន)ពិតជានឹងនាំមកកាន់អ្នកនូវមន្តអាគមដូចនេះដែរ(ដើម្បីតទល់ជាមួយអ្នក)។ ហេតុនេះ ចូរអ្នកកំណត់ពេលជួបគ្នានៅទីកន្លែងណាមួយចំកណ្ដាលរវាងយើង និងអ្នក ដែលយើងនិងអ្នកមិនត្រូវក្បត់កិច្ចសន្យាឡើយ។

قَالَ مَوْعِدُكُمْ يَوْمُ ٱلزِّينَةِ وَأَن يُحْشَرَ ٱلنَّاسُ ضُحًى ﴿٥٩﴾

៥៩-គាត់(មូសា)បានតបថាៈ ពេលវេលាណាត់ជួបពួកអ្នកគឺនៅថ្ងៃបុណ្យ ហើយត្រូវឱ្យប្រជាជនមកជួបជុំគ្នានៅពេលថ្ងៃរះ។

فَتَوَلَّىٰ فِرْعَوْنُ فَجَمَعَ كَيْدَهُۥ ثُمَّ أَتَىٰ ﴿٦٠﴾

៦០-ហើយហ្វៀរអោនបានត្រឡប់ទៅវិញ រួចមកគេក៏បានប្រមូលអ្នកចេះមន្តអាគមនរបស់គេ បន្ទាប់មកគេបានមកដល់(តាមពេលកំណត់)។

قَالَ لَهُم مُّوسَىٰ وَيْلَكُمْ لَا تَفْتَرُوا۟ عَلَى ٱللَّهِ كَذِبًا فَيُسْحِتَكُم بِعَذَابٍ ۖ وَقَدْ خَابَ مَنِ ٱفْتَرَىٰ ﴿٦١﴾

៦១-មូសាបានពោលទៅកាន់ពួកគេថាៈ វិនាសអន្តរាយហើយពួកអ្នក។ ចូរពួកអ្នកកុំប្រឌិតរឿងភូតកុហកប្រឆាំងនឹងអល់ឡោះ ដែលជាហេតុនាំឱ្យទ្រង់បំផ្លាញពួកអ្នកដោយទារុណកម្មណាមួយឱ្យសោះ។ ហើយអ្នកដែលបានប្រឌិតភូតកុហកនោះពិតជាខាតបង់មិនខាន។

فَتَنَـٰزَعُوٓا۟ أَمْرَهُم بَيْنَهُمْ وَأَسَرُّوا۟ ٱلنَّجْوَىٰ ﴿٦٢﴾

៦២-រួចមកពួកគេក៏បានពិភាក្សាគ្នាទៅវិញទៅមកអំពីរឿងរបស់ពួកគេ ហើយពួកគេបានរក្សាការសម្ងាត់។

قَالُوٓا۟ إِنْ هَـٰذَٰنِ لَسَـٰحِرَٰنِ يُرِيدَانِ أَن يُخْرِجَاكُم مِّنْ أَرْضِكُم بِسِحْرِهِمَا وَيَذْهَبَا بِطَرِيقَتِكُمُ ٱلْمُثْلَىٰ ﴿٦٣﴾

៦៣-ពួកគេបាននិយាយថាៈ ពិតប្រាកដណាស់ គេទាំងពីរអ្នកនេះគឺជាគ្រូមន្តអាគម ដែលគេទាំងពីរចង់បណ្ដេញពួកអ្នកចេញពីទឹកដីរបស់ពួកអ្នកដោយមន្តអាគមរបស់គេទាំងពីរ។ ហើយគេទាំងពីរចង់បំបាត់នូវទំនៀមទម្លាប់របស់ពួកអ្នកដែលល្អប្រសើរខ្ពង់ខ្ពស់។

فَأَجْمِعُوا۟ كَيْدَكُمْ ثُمَّ ٱئْتُوا۟ صَفًّا ۚ وَقَدْ أَفْلَحَ ٱلْيَوْمَ مَنِ ٱسْتَعْلَىٰ ﴿٦٤﴾

៦៤-ដូច្នេះ ចូរពួកអ្នកប្រមូលអ្នកចេះមន្តអាគមរបស់ពួកអ្នក។ បន្ទាប់មក ចូរពួកអ្នកមកឈរជាជួរ(ដើម្បីតទល់ជាមួយនឹងគេទាំងពីរ)ព្រោះនៅថ្ងៃនេះ អ្នកណាដែលមានប្រៀបជាងគេ ពិតជានឹងទទួលបានជ័យជំនះ។

قَالُوا۟ يَـٰمُوسَىٰٓ إِمَّآ أَن تُلْقِىَ وَإِمَّآ أَن نَّكُونَ

៦៥-ពួកគេក៏បាននិយាយថា : ឱមូសា! តើអ្នកបោះ(ដំបង)

أَوَّلَ مَنۡ أَلۡقَىٰ ﴿٦٥﴾

មុន ឬក៏ពួកយើងបោះមុន?

قَالَ بَلۡ أَلۡقُواْۖ فَإِذَا حِبَالُهُمۡ وَعِصِيُّهُمۡ يُخَيَّلُ
إِلَيۡهِ مِن سِحۡرِهِمۡ أَنَّهَا تَسۡعَىٰ ﴿٦٦﴾

៦៦-គាត់( មូសា) បានឆ្លើយថា : ទេ! ចូរពួកអ្នកបោះមុនចុះ! រំពេចនោះខ្សែពួរនិងដំបងរបស់ពួកគេចេញពីមន្តអាគមរបស់ពួកគេ វាធ្វើឱ្យគាត់ឆ្អិនភ្នែកហាក់ដូចជាសត្វពស់កំពុងតែវារ ។

فَأَوۡجَسَ فِي نَفۡسِهِۦ خِيفَةٗ مُّوسَىٰ ﴿٦٧﴾

៦៧-ពេលនោះមូសាមានអារម្មណ៍ភ័យខ្លាចនៅក្នុងខ្លួនរបស់គាត់ ។

قُلۡنَا لَا تَخَفۡ إِنَّكَ أَنتَ ٱلۡأَعۡلَىٰ ﴿٦٨﴾

៦៨-យើង( អល់ឡោះ) បានមានបន្ទូលថា: ចូរអ្នកកុំភ័យខ្លាច ពិតប្រាកដណាស់ អ្នកគឺជាអ្នកដែលមានប្រៀបជាងគេ ។

وَأَلۡقِ مَا فِي يَمِينِكَ تَلۡقَفۡ مَا صَنَعُوٓاْۖ إِنَّمَا
صَنَعُواْ كَيۡدُ سَٰحِرٖۖ وَلَا يُفۡلِحُ ٱلسَّاحِرُ
حَيۡثُ أَتَىٰ ﴿٦٩﴾

៦៩-ហើយចូរអ្នកបោះនូវអ្វីដែលមាននៅនឹងដៃស្តាំរបស់អ្នកចុះ នោះវានឹងលេបត្របាក់នូវអ្វីដែលពួកគេបានធ្វើ ។ តាមពិតអ្វីដែលពួកគេបានធ្វើគឺគ្រាន់តែជាការបោកបញ្ឆោតរបស់គ្រូមន្តអាគមប៉ុណ្ណោះ ។ ហើយគ្រូមន្តអាគមមិនអាចមានជ័យជំនះឡើយ ទោះបីជាគេមកពីទីណាក៏ដោយ ។

فَأُلۡقِيَ ٱلسَّحَرَةُ سُجَّدٗا قَالُوٓاْ ءَامَنَّا بِرَبِّ
هَٰرُونَ وَمُوسَىٰ ﴿٧٠﴾

៧០-រំពេចនោះពួកគ្រូមន្តអាគមបាននាំគ្នាលុតជង្គង់ស៊ូជូតដោយនិយាយថា: ពួកយើងព្រមជឿនឹងម្ចាស់របស់ហារូននិងមូសាហើយ ។

قَالَ ءَامَنتُمۡ لَهُۥ قَبۡلَ أَنۡ ءَاذَنَ لَكُمۡۖ إِنَّهُۥ
لَكَبِيرُكُمُ ٱلَّذِي عَلَّمَكُمُ ٱلسِّحۡرَۖ
فَلَأُقَطِّعَنَّ أَيۡدِيَكُمۡ وَأَرۡجُلَكُم مِّنۡ خِلَٰفٖ
وَلَأُصَلِّبَنَّكُمۡ فِي جُذُوعِ ٱلنَّخۡلِ وَلَتَعۡلَمُنَّ أَيُّنَآ
أَشَدُّ عَذَابٗا وَأَبۡقَىٰ ﴿٧١﴾

៧១-គេ( ហ្វៀរអោន) បាននិយាយថា: តើពួកអ្នកមានជំនឿលើគេ( មូសា) មុននឹងយើងអនុញ្ញាតឱ្យពួកអ្នកឬ? ពិតប្រាកដណាស់ គេពិតជាគ្រូរបស់ពួកអ្នកដែលគេបានបង្រៀនមន្តអាគមដល់ពួកអ្នក ។ ដូច្នេះ យើងពិតជានឹងកាត់ដៃជើងរបស់ពួកអ្នកឆ្លាស់គ្នា ហើយយើងនឹងចងឆ្កាងពួកអ្នកទៅនឹងគល់ល្មើ ហើយពួកអ្នកពិតជានឹងដឹងថា តើអ្នកណាក្នុងចំណោមពួកយើងដែលខ្លាំង និងស្ថិតស្ថេរជាងគេខាងធ្វើទារុណកម្ម?

قَالُواْ لَن نُّؤۡثِرَكَ عَلَىٰ مَا جَآءَنَا مِنَ
ٱلۡبَيِّنَٰتِ وَٱلَّذِي فَطَرَنَاۖ فَٱقۡضِ مَآ أَنتَ
قَاضٍۖ إِنَّمَا تَقۡضِي هَٰذِهِ ٱلۡحَيَوٰةَ ٱلدُّنۡيَآ ﴿٧٢﴾

៧២-ពួកគេ( គ្រូមន្តអាគម) បាននិយាយថា: ពួកយើងមិនអាចលើកតម្កើងអ្នកជាងអ្វីដែលបានមកដល់ពួកយើងនូវភស្តុតាង១យ៉ាងច្បាស់លាស់ និងអ្នកដែលបានបង្កើតពួកយើងនោះឡើយ ។ ដូច្នេះ ចូរអ្នកសម្រេចចុះនូវអ្វីដែលអ្នកចង់ធ្វើ ។ តាមពិតអ្នកអាចធ្វើ( ទារុណកម្មពួកយើង) បានតែនៅក្នុងលោកិយនេះប៉ុណ្ណោះ ។

إِنَّآ ءَامَنَّا بِرَبِّنَا لِيَغۡفِرَ لَنَا خَطَٰيَٰنَا
وَمَآ أَكۡرَهۡتَنَا عَلَيۡهِ مِنَ ٱلسِّحۡرِۗ وَٱللَّهُ خَيۡرٞ
وَأَبۡقَىٰٓ ٧٣

៧៣-ពិតប្រាកដណាស់ ពួកយើងបានជឿនឹងម្ចាស់របស់ពួកយើង ដើម្បីទ្រង់នឹងអភ័យទោសឱ្យពួកយើងនូវកំហុសឆ្គងទាំងឡាយរបស់ពួកយើង និងអ្វីដែលអ្នកបានបង្ខំពួកយើងឱ្យធ្វើទៅលើគេ(មូសា) អំពីមន្តអាគមនោះ។ ហើយអល់ឡោះគឺប្រសើរជាង(ចំពោះការតបស្នង)និងស្ថិតស្ថេរជាង(ក្នុងការធ្វើទារុណកម្ម)។

إِنَّهُۥ مَن يَأۡتِ رَبَّهُۥ مُجۡرِمٗا فَإِنَّ لَهُۥ جَهَنَّمَ لَا
يَمُوتُ فِيهَا وَلَا يَحۡيَىٰ ٧٤

៧៤-ពិតប្រាកដណាស់ អ្នកណាហើយមកជួបម្ចាស់របស់គេជាអ្នកប្រឆាំង(នឹងអល់ឡោះ) ពិតប្រាកដណាស់ សម្រាប់គេគឺនរកជើហាន់ណាំ ដោយគេស្ទើរស្លាប់ និងស្ទើររស់នៅក្នុងនោះ។

وَمَن يَأۡتِهِۦ مُؤۡمِنٗا قَدۡ عَمِلَ ٱلصَّٰلِحَٰتِ
فَأُوْلَٰٓئِكَ لَهُمُ ٱلدَّرَجَٰتُ ٱلۡعُلَىٰ ٧٥

៧៥-ប៉ុន្តែអ្នកណាហើយដែលមកជួបនឹងទ្រង់ជាអ្នកមានជំនឿ ដែលបានសាងអំពើល្អមែននោះ អ្នកទាំងនោះនឹងទទួលបានឋានៈដ៏ខ្ពង់ខ្ពស់(ក្នុងឋានសួគ៌)។

جَنَّٰتُ عَدۡنٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ
فِيهَاۚ وَذَٰلِكَ جَزَآءُ مَن تَزَكَّىٰ ٧٦

៧៦-ឋានសួគ៌អាត់និន ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។ នោះហើយគឺជាការតបស្នងចំពោះអ្នកដែលបានសំអាតខ្លួន(ពីបាបកម្ម)។

وَلَقَدۡ أَوۡحَيۡنَآ إِلَىٰ مُوسَىٰٓ أَنۡ أَسۡرِ بِعِبَادِي
فَٱضۡرِبۡ لَهُمۡ طَرِيقٗا فِي ٱلۡبَحۡرِ يَبَسٗا لَّا تَخَٰفُ
دَرَكٗا وَلَا تَخۡشَىٰ ٧٧

៧៧-ហើយជាការពិតណាស់ យើងបានផ្តល់វ៉ាហ៊ីទៅឱ្យមូសាថា: ចូរអ្នកនាំខ្ញុំរបស់យើងទាំងអស់(អំបូរអ៊ីស្រាអែល)ភៀសខ្លួនទាំងយប់ ហើយចូរអ្នកវាយ(ទឹកសមុទ្រនឹងដំបងរបស់អ្នក)ធ្វើជាផ្លូវស្ងួតក្នុងសមុទ្រសម្រាប់ពួកគេ ដោយមិនត្រូវខ្លាចពីការតាមទាន់(របស់ទាហានហ្វៀរអោន)នោះឡើយ ហើយក៏មិនត្រូវខ្លាច(ពីការលង់ទឹក)ដែរ។

فَأَتۡبَعَهُمۡ فِرۡعَوۡنُ بِجُنُودِهِۦ فَغَشِيَهُم مِّنَ ٱلۡيَمِّ مَا
غَشِيَهُمۡ ٧٨

៧៨-បន្ទាប់មក ហ្វៀរអោនបាននាំទាហានរបស់គេដេញតាមពួកគេ(អំបូរអ៊ីស្រាអែល) តែទឹកសមុទ្របានគ្របដណ្តប់លើពួកគេ(ហ្វៀរអោន)រហូតដល់ពួកគេលង់ស្លាប់។

وَأَضَلَّ فِرۡعَوۡنُ قَوۡمَهُۥ وَمَا هَدَىٰ ٧٩

៧៩-ហើយហ្វៀរអោនបាននាំឱ្យក្រុមរបស់គេវង្វេង ហើយគេមិនបានណែនាំផ្លូវត្រឹមត្រូវ(ដល់ពួកគេ)ឡើយ។

يَٰبَنِيٓ إِسۡرَٰٓءِيلَ قَدۡ أَنجَيۡنَٰكُم مِّنۡ عَدُوِّكُمۡ
وَوَٰعَدۡنَٰكُمۡ جَانِبَ ٱلطُّورِ ٱلۡأَيۡمَنَ وَنَزَّلۡنَا

៨០-ឱអំបូរអ៊ីស្រាអែល! ជាការពិតណាស់ យើងបានរំដោះពួកអ្នកពីសត្រូវរបស់ពួកអ្នក ហើយយើងបានសន្យានឹងពួកអ្នកនៅក្បែរភ្នំតួរផ្នែកខាងស្តាំ(ដើម្បីបញ្ចុះគម្ពីរតាវរ៉ត) ហើយយើងបានបញ្ចុះ

عَلَيۡكُمُ ٱلۡمَنَّ وَٱلسَّلۡوَىٰ ﴿٨٠﴾

ម៉ាន់ណា(ជាប្រភេទចំណីដែលមានរសជាតិផ្អែម) និងសត្វក្រួចឱ្យពួកគេ។

كُلُواْ مِن طَيِّبَٰتِ مَا رَزَقۡنَٰكُمۡ وَلَا تَطۡغَوۡاْ فِيهِ فَيَحِلَّ عَلَيۡكُمۡ غَضَبِيۖ وَمَن يَحۡلِلۡ عَلَيۡهِ غَضَبِي فَقَدۡ هَوَىٰ ﴿٨١﴾

៨១-ចូរពួកអ្នកទទួលទានពីចំណីល្អៗនូវអ្វីដែលយើងបានប្រទានឱ្យពួកអ្នក ហើយពួកអ្នកកុំបំពាន(ខ្ជះខ្ជាយក្នុងការទទួលទាន)នឹងវាដែលជាហេតុនាំឱ្យការខឹងសម្បាររបស់យើងធ្លាក់ទៅលើពួកអ្នក។ អ្នកណាហើយដែលការខឹងសម្បាររបស់យើងធ្លាក់ទៅលើគេ អ្នកនោះពិតជាវិនាសអន្តរាយ។

وَإِنِّي لَغَفَّارٞ لِّمَن تَابَ وَءَامَنَ وَعَمِلَ صَٰلِحٗا ثُمَّ ٱهۡتَدَىٰ ﴿٨٢﴾

៨២-ហើយពិតប្រាកដណាស់ យើងគឺជាអ្នកដែលមហាអភ័យទោសចំពោះអ្នកណាដែលបានសារភាពកំហុស និងបានជឿ ហើយនិងបានសាងអំពើល្អ បន្ទាប់មកគេប្រកាន់ខ្ជាប់លើផ្លូវដែលត្រឹមត្រូវ(រហូតដល់ស្លាប់)។

۞ وَمَآ أَعۡجَلَكَ عَن قَوۡمِكَ يَٰمُوسَىٰ ﴿٨٣﴾

៨៣-តើអ្វីដែលធ្វើឱ្យអ្នកប្រញាប់ប្រញាល់ចោលក្រុមរបស់អ្នកឱមូសា?

قَالَ هُمۡ أُوْلَآءِ عَلَىٰٓ أَثَرِي وَعَجِلۡتُ إِلَيۡكَ رَبِّ لِتَرۡضَىٰ ﴿٨٤﴾

៨៤-គេ(មូសា)បានពោលថាៈ ពួកទាំងនោះនៅពីក្រោយខ្ញុំ ហើយខ្ញុំបានរួសរាន់មកជួបនឹងទ្រង់ ដើម្បីឱ្យទ្រង់បន្ថែមការស្រឡាញ់ និងការយល់ព្រម ឱម្ចាស់របស់ខ្ញុំ!

قَالَ فَإِنَّا قَدۡ فَتَنَّا قَوۡمَكَ مِنۢ بَعۡدِكَ وَأَضَلَّهُمُ ٱلسَّامِرِيُّ ﴿٨٥﴾

៨៥-ទ្រង់បានមានបន្ទូលថាៈ ដូច្នេះ ពិតប្រាកដណាស់ យើងបានសាកល្បងក្រុមរបស់អ្នកក្រោយពីអវត្តមានរបស់អ្នក ហើយសាមីរីបាននាំពួកគេឱ្យវង្វេង។

فَرَجَعَ مُوسَىٰٓ إِلَىٰ قَوۡمِهِۦ غَضۡبَٰنَ أَسِفٗاۚ قَالَ يَٰقَوۡمِ أَلَمۡ يَعِدۡكُمۡ رَبُّكُمۡ وَعۡدًا حَسَنًاۚ أَفَطَالَ عَلَيۡكُمُ ٱلۡعَهۡدُ أَمۡ أَرَدتُّمۡ أَن يَحِلَّ عَلَيۡكُمۡ غَضَبٞ مِّن رَّبِّكُمۡ فَأَخۡلَفۡتُم مَّوۡعِدِي ﴿٨٦﴾

៨៦-បន្ទាប់មក មូសាបានត្រឡប់ទៅកាន់ក្រុមរបស់គាត់ដោយការខឹងសម្បា សោកស្ដាយបំផុត។ គាត់បានពោលថាៈ ឱក្រុមរបស់ខ្ញុំ! តើម្ចាស់របស់ពួកអ្នកមិនបានសន្យាជាមួយពួកអ្នកនូវកិច្ចសន្យាមួយដ៏ល្អទេឬ? តើកិច្ចសន្យានោះយូរចំពោះពួកអ្នកពេកឬ? ឬមួយក៏ពួកអ្នកចង់បានការខឹងសម្បាពីម្ចាស់របស់ពួកអ្នកធ្លាក់លើពួកអ្នក បានជាពួកអ្នកនាំគ្នាក្បត់កិច្ចសន្យារបស់ខ្ញុំនោះ?

قَالُواْ مَآ أَخۡلَفۡنَا مَوۡعِدَكَ بِمَلۡكِنَا وَلَٰكِنَّا

៨៧-ពួកគេបាននិយាយថាៈពួកយើងមិនបានក្បត់កិច្ចសន្យារបស់អ្នក ដោយការជ្រើសរើសរបស់ពួកយើងផ្ទាល់ឡើយ។ ក៏ប៉ុន្តែ

حُمِّلْنَآ أَوْزَارًا مِّن زِينَةِ ٱلْقَوْمِ فَقَذَفْنَٰهَا فَكَذَٰلِكَ أَلْقَى ٱلسَّامِرِىُّ ﴿٨٧﴾

ពួកយើងត្រូវបានគេបង្ខំឱ្យទទួលបន្ទុកមួយយ៉ាងធ្ងន់ធ្ងរពីការប្រមូលគ្រឿងអលង្ការរបស់ក្រុម(ហ្វៀរអោន) ។ ក្រោយមកពួកយើងក៏បានបោះវា(ចូលទៅក្នុងភ្លើងតាមការណែនាំរបស់សាមីរី) ។ បន្ទាប់មកសាមីរីក៏បានធ្វើដូច្នោះដែរ ។

فَأَخْرَجَ لَهُمْ عِجْلًا جَسَدًا لَّهُۥ خُوَارٌ فَقَالُوا۟ هَٰذَآ إِلَٰهُكُمْ وَإِلَٰهُ مُوسَىٰ فَنَسِىَ ﴿٨٨﴾

៨៨-បន្ទាប់មក គេ(សាមីរី)បានយកចេញ(ពីភ្លើង)នូវរូបកូនគោមួយដែលមានសំឡេងស្រែក ។ ពួកគេនិយាយថា: នេះគឺជាម្ចាស់របស់ពួកអ្នក និងជាម្ចាស់របស់មូសា តែគេបានភ្លេច ។

أَفَلَا يَرَوْنَ أَلَّا يَرْجِعُ إِلَيْهِمْ قَوْلًا وَلَا يَمْلِكُ لَهُمْ ضَرًّا وَلَا نَفْعًا ﴿٨٩﴾

៨៩-តើពួកគេមិនឃើញទេឬថា ពិតប្រាកដណាស់វា(កូនគោ)មិនអាចឆ្លើយតបនូវពាក្យសំដីណាមួយទៅកាន់ពួកគេឡើយ ហើយវាក៏គ្មានលទ្ធភាពធ្វើឱ្យគ្រោះថ្នាក់ និងផ្តល់ផលប្រយោជន៍ដល់ពួកគេបានដែរ ។

وَلَقَدْ قَالَ لَهُمْ هَٰرُونُ مِن قَبْلُ يَٰقَوْمِ إِنَّمَا فُتِنتُم بِهِۦ ۖ وَإِنَّ رَبَّكُمُ ٱلرَّحْمَٰنُ فَٱتَّبِعُونِى وَأَطِيعُوٓا۟ أَمْرِى ﴿٩٠﴾

៩០-ហើយជាការពិតណាស់ ហារូនបាននិយាយប្រាប់ពួកគេតាំងពីមុនមកថា: ឱក្រុមរបស់ខ្ញុំ! តាមពិតពួកអ្នកគ្រាន់តែត្រូវបានគេសាកល្បងនឹងវា(ការគោរពសក្ការៈកូនគោ)ប៉ុណ្ណោះ ។ ហើយពិតប្រាកដណាស់ ម្ចាស់របស់ពួកអ្នកគឺជាម្ចាស់មហាសប្បុរស ។ ដូច្នេះចូរពួកអ្នកតាមខ្ញុំ និងគោរពតាមបទបញ្ជារបស់ខ្ញុំ ។

قَالُوا۟ لَن نَّبْرَحَ عَلَيْهِ عَٰكِفِينَ حَتَّىٰ يَرْجِعَ إِلَيْنَا مُوسَىٰ ﴿٩١﴾

៩១-ពួកគេបានឆ្លើយថា: ពួកយើងនៅតែបន្តគោរពសក្ការៈទៅចំពោះវា(កូនគោនោះ)ជានិច្ច រហូតទាល់តែមូសាត្រឡប់មកកាន់ពួកយើងវិញ ។

قَالَ يَٰهَٰرُونُ مَا مَنَعَكَ إِذْ رَأَيْتَهُمْ ضَلُّوٓا۟ ﴿٩٢﴾

៩២-គេ(មូសា)បានពោលថា: ឱហារូន! តើអ្វីទៅដែលបានរារាំងអ្នកនៅពេលដែលអ្នកបានឃើញពួកគេស្ថិតក្នុងភាពវង្វេង(ពីសាសនាអល់ឡោះ) ។

أَلَّا تَتَّبِعَنِ ۖ أَفَعَصَيْتَ أَمْرِى ﴿٩٣﴾

៩៣-ដោយអ្នកមិនធ្វើតាម(បណ្តាំរបស់)ខ្ញុំនោះ? តើអ្នកមិនគោរពតាមបញ្ជារបស់ខ្ញុំទេឬ?

قَالَ يَبْنَؤُمَّ لَا تَأْخُذْ بِلِحْيَتِى وَلَا بِرَأْسِىٓ ۖ إِنِّى خَشِيتُ أَن تَقُولَ فَرَّقْتَ بَيْنَ بَنِىٓ إِسْرَٰٓءِيلَ وَلَمْ تَرْقُبْ قَوْلِى ﴿٩٤﴾

៩៤-គេ(ហារូន)បានតបថា: ឱកូនម្តាយរបស់ខ្ញុំ! សូមអ្នកកុំចាប់ពុកចង្ការបស់ខ្ញុំ និងសក់ក្បាលរបស់ខ្ញុំ ។ ពិតប្រាកដណាស់ ខ្ញុំខ្លាចអ្នកស្តីបន្ទោសខ្ញុំថា: អ្នក(ហារូន)បានបំបែកបំបាក់អំបូរអ៊ីស្រាអែល និងមិនគោរពតាមពាក្យសំដីរបស់ខ្ញុំ(មូសា) ។

៩៥-គេ(មូសា) បានពោលថា: តើរឿងរ៉ាវរបស់អ្នកយ៉ាង ដូចម្តេចឱសាមីរី?

قَالَ فَمَا خَطْبُكَ يَـٰسَـٰمِرِىُّ ﴿٩٥﴾

៩៦-គេបានឆ្លើយថា: ខ្ញុំបានឃើញនូវអ្វីដែលពួកគេមិនបាន ឃើញវា(ជីព្រីលជិះសេះ) ហើយខ្ញុំបានយក(ដី) មួយក្ដាប់ពីដាន (ជើងសេះ) អ្នកនាំសារ(ជីព្រីល) ។ ក្រោយមកខ្ញុំបានបោះវា(ទៅ លើគ្រឿងអលង្ការដែលរលាយក្លាយជារាងកូនគោ) ។ ហើយខ្លួន របស់ខ្ញុំបានផុសជាគំនិតឱ្យខ្ញុំធ្វើដូច្នោះ ។

قَالَ بَصُرْتُ بِمَا لَمْ يَبْصُرُواْ بِهِۦ فَقَبَضْتُ
قَبْضَةً مِّنْ أَثَرِ ٱلرَّسُولِ فَنَبَذْتُهَا وَكَذَٰلِكَ
سَوَّلَتْ لِى نَفْسِى ﴿٩٦﴾

៩៧-គេ(មូសា) បានពោលថា : ចូរអ្នកចាកចេញទៅឱ្យឆ្ងាយ! ហើយពិតប្រាកដណាស់ សម្រាប់អ្នកនៅក្នុងការរស់នៅលើលោកិយ នេះគឺមានតែពាក្យថា: គ្មានការទាក់ទងគ្នាទៀតឡើយ ។ ហើយពិត ប្រាកដណាស់ ការសន្យាសម្រាប់អ្នក(នៅថ្ងៃបរលោក) នឹងមិនត្រូវ គេធ្វើឱ្យខុសសន្យាជាដាច់ខាត ។ ហើយចូរអ្នកមើលទៅចំពោះព្រះ របស់អ្នកដែលអ្នកបានបន្តការគោរពសក្ការៈចំពោះវារហូតមកនោះ ចុះ យើងពិតជានឹងដុតរំលាយវា បន្ទាប់មកយើងពិតជានឹងបាច ពង្រាយវាទៅក្នុងសមុទ្រ ។

قَالَ فَٱذْهَبْ فَإِنَّ لَكَ فِى ٱلْحَيَوٰةِ أَن تَقُولَ
لَا مِسَاسَ ۖ وَإِنَّ لَكَ مَوْعِدًا لَّن تُخْلَفَهُۥ ۖ
وَٱنظُرْ إِلَىٰٓ إِلَـٰهِكَ ٱلَّذِى ظَلْتَ عَلَيْهِ عَاكِفًا ۖ
لَّنُحَرِّقَنَّهُۥ ثُمَّ لَنَنسِفَنَّهُۥ فِى ٱلْيَمِّ نَسْفًا ﴿٩٧﴾

៩៨-តាមពិតម្ចាស់របស់ពួកអ្នក គឺអល់ឡោះដែលគ្មានម្ចាស់ ណាផ្សេងត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ ទ្រង់ ដឹងជ្រួតជ្រាបលើអ្វីៗទាំងអស់ ។

إِنَّمَآ إِلَـٰهُكُمُ ٱللَّهُ ٱلَّذِى لَآ إِلَـٰهَ إِلَّا هُوَ ۚ وَسِعَ
كُلَّ شَىْءٍ عِلْمًا ﴿٩٨﴾

៩៩-ដូច្នោះដែរ យើងនិទានប្រាប់អ្នក(មូហាំម៉ាត់) អំពីរឿងរ៉ាវ (របស់ប្រជាជាតិ) មួយចំនួនដែលបានកន្លងផុតទៅ ។ ហើយជាការ ពិតណាស់ យើងបានផ្ដល់ឱ្យអ្នកនូវការក្រើនរំលឹកមួយ(គម្ពីរ គួរអាន) ពីយើង ។

كَذَٰلِكَ نَقُصُّ عَلَيْكَ مِنْ أَنۢبَآءِ مَا قَدْ سَبَقَ ۚ
وَقَدْ ءَاتَيْنَـٰكَ مِن لَّدُنَّا ذِكْرًا ﴿٩٩﴾

១០០-អ្នកណាហើយបានងាកចេញពីវា(គម្ពីរគួរអាន) ពិត ប្រាកដណាស់ គេនឹងត្រូវរែកនូវបាបកម្មដ៏ធ្ងន់នៅថ្ងៃបរលោក ។

مَّنْ أَعْرَضَ عَنْهُ فَإِنَّهُۥ يَحْمِلُ يَوْمَ ٱلْقِيَـٰمَةِ
وِزْرًا ﴿١٠٠﴾

១០១-ដោយពួកគេស្ថិតនៅក្នុងនោះ(នរក) ជាអមតៈ ។ ហើយ ពួកគេនឹងទទួលបន្ទុកដ៏អាក្រក់បំផុត(បាបកម្ម) នៅថ្ងៃបរលោក ។

خَـٰلِدِينَ فِيهِ ۖ وَسَآءَ لَهُمْ يَوْمَ ٱلْقِيَـٰمَةِ
حِمْلًا ﴿١٠١﴾

يَوْمَ يُنفَخُ فِي ٱلصُّورِۚ وَنَحْشُرُ ٱلْمُجْرِمِينَ
يَوْمَئِذٍ زُرْقًا ١٠٢

១០២-នៅថ្ងៃដែលគេ(ម៉ាឡាអ៊ីកាត់)ផ្លុំត្រែ ហើយនៅថ្ងៃនោះ យើងនឹងប្រមូលពួកដែលប្រព្រឹត្តអំពើអាក្រក់ដោយភ្នែករបស់ពួកគេឡើងជាំខៀវ ។

يَتَخَٰفَتُونَ بَيْنَهُمْ إِن لَّبِثْتُمْ إِلَّا عَشْرًا ١٠٣

១០៣-ពួកគេខ្សឹបខ្សៀវគ្នាថាៈ ពួកអ្នកមិនបានស្នាក់នៅ(ក្នុងលោកិយនេះ)ឡើយ លើកលែងតែចំនួនដប់ថ្ងៃប៉ុណ្ណោះ ។

نَّحْنُ أَعْلَمُ بِمَا يَقُولُونَ إِذْ يَقُولُ أَمْثَلُهُمْ
طَرِيقَةً إِن لَّبِثْتُمْ إِلَّا يَوْمًا ١٠٤

១០៤-យើងដឹងបំផុតនូវអ្វីដែលពួកគេនិយាយនៅពេលដែលអ្នកមានបញ្ញាចេះដឹងជាងគេនៃពួកគេនិយាយថាៈ ពួកអ្នកមិនបានស្នាក់នៅ(ក្នុងលោកិយនេះ)ឡើយ លើកលែងតែមួយថ្ងៃប៉ុណ្ណោះ ។

وَيَسْـَٔلُونَكَ عَنِ ٱلْجِبَالِ فَقُلْ يَنسِفُهَا رَبِّي
نَسْفًا ١٠٥

១០៥-ហើយពួកគេនឹងសួរអ្នក(មូហាំម៉ាត់)អំពីភ្នំទាំងឡាយ ដូច្នេះចូរអ្នកពោលថាៈ ម្ចាស់របស់ខ្ញុំនឹងបំបែកវាឱ្យប៉ើងខ្ទេចខ្ទី ។

فَيَذَرُهَا قَاعًا صَفْصَفًا ١٠٦

១០៦-ហើយទ្រង់នឹងទុកឱ្យដីរាបស្មើធេង ។

لَّا تَرَىٰ فِيهَا عِوَجًا وَلَآ أَمْتًا ١٠٧

១០៧-ដោយអ្នកនឹងមើលមិនឃើញវៀច ហើយក៏មិនឃើញកន្លែងដែលទាប ឬខ្ពស់នៅលើវាឡើយ ។

يَوْمَئِذٍ يَتَّبِعُونَ ٱلدَّاعِيَ لَا عِوَجَ لَهُۥۖ
وَخَشَعَتِ ٱلْأَصْوَاتُ لِلرَّحْمَٰنِ فَلَا تَسْمَعُ إِلَّا
هَمْسًا ١٠٨

១០៨-នៅថ្ងៃនោះពួកគេ(មនុស្សលោក)នឹងដើរតាម(សំឡេង)អ្នកដែលស្រែកហៅ ដោយពុំងាករេពីសំឡេងនោះឡើយ ។ ហើយសំឡេងទាំងឡាយបានឱនលំទោនទៅចំពោះម្ចាស់មហាសប្បុរស ។ ហើយអ្នកនឹងមិនឮក្រៅពីសំឡេងតិចៗ(សំឡេងខ្សឹបគ្នា ឬស្នូរជើង)នោះឡើយ ។

يَوْمَئِذٍ لَّا تَنفَعُ ٱلشَّفَٰعَةُ إِلَّا مَنْ أَذِنَ لَهُ
ٱلرَّحْمَٰنُ وَرَضِيَ لَهُۥ قَوْلًا ١٠٩

១០៩-នៅថ្ងៃនោះដែរ ការជួយអន្តរាគមន៍នឹងគ្មានផលប្រយោជន៍អ្វីឡើយ លើកលែងតែអ្នកណាដែលម្ចាស់មហាសប្បុរសបានអនុញ្ញាតឱ្យគេ និងទ្រង់បានយល់ព្រមឱ្យគេនូវការនិយាយស្ដីប៉ុណ្ណោះ ។

يَعْلَمُ مَا بَيْنَ أَيْدِيهِمْ وَمَا خَلْفَهُمْ وَلَا
يُحِيطُونَ بِهِۦ عِلْمًا ١١٠

១១០-ទ្រង់ដឹងនូវអ្វីដែល(នឹងកើតឡើង)នៅខាងមុខពួកគេ(ថ្ងៃបរលោក) និងអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមក(ក្នុងលោកិយ) ហើយពួកគេមិនដឹងជ្រួតជ្រាបអំពីទ្រង់ឡើយ ។

۞ وَعَنَتِ ٱلْوُجُوهُ لِلْحَيِّ ٱلْقَيُّومِۖ وَقَدْ خَابَ

១១១-ហើយមុខរបស់ពួកគេបានឱនឈ្ងោកទៅចំពោះម្ចាស់

مَنۡ حَمَلَ ظُلۡمٗا ﴿١١١﴾

ដែលរស់ជាអមតៈ ជាអ្នករៀបចំអ្វីៗទាំងអស់។ ហើយអ្នកដែលបាននាំមកជាមួយនូវប្រការស្ហ៊ីរិកពិតជាបានខាតបង់។

وَمَن يَعۡمَلۡ مِنَ ٱلصَّٰلِحَٰتِ وَهُوَ مُؤۡمِنٞ
فَلَا يَخَافُ ظُلۡمٗا وَلَا هَضۡمٗا ﴿١١٢﴾

១១២-ហើយអ្នកណាដែលសាងនូវអំពើល្អ ដោយគេជាអ្នកមានជំនឿ(លើអល់ឡោះ) នោះ គេមិនភ័យខ្លាចពីភាពអយុត្តិធមិ(បន្ថែមអំពើអាក្រក់) និងភាពខ្វះខាត(ពីអំពើល្អ)នោះឡើយ។

وَكَذَٰلِكَ أَنزَلۡنَٰهُ قُرۡءَانًا عَرَبِيّٗا وَصَرَّفۡنَا فِيهِ
مِنَ ٱلۡوَعِيدِ لَعَلَّهُمۡ يَتَّقُونَ أَوۡ يُحۡدِثُ لَهُمۡ
ذِكۡرٗا ﴿١١٣﴾

១១៣-ហើយដូច្នោះដែរ យើងបានបញ្ចុះគម្ពីរគួរអានជាភាសាអារ៉ាប់ ហើយយើងបានបកស្រាយបញ្ជាក់នៅក្នុងនោះយ៉ាងក្បោះក្បាយអំពីការព្រមាន(ទារុណកម្មគ្រប់ប្រភេទ) សង្ឃឹមថាពួកគេនឹងកោតខ្លាចអល់ឡោះ ឬវា(គម្ពីរគួរអាននេះ)នាំឱ្យមានការរំលឹកដល់ពួកគេ។

فَتَعَٰلَى ٱللَّهُ ٱلۡمَلِكُ ٱلۡحَقُّۗ وَلَا تَعۡجَلۡ
بِٱلۡقُرۡءَانِ مِن قَبۡلِ أَن يُقۡضَىٰٓ إِلَيۡكَ وَحۡيُهُۥۖ
وَقُل رَّبِّ زِدۡنِي عِلۡمٗا ﴿١١٤﴾

១១៤-ហើយអល់ឡោះមហាខ្ពង់ខ្ពស់ ជាស្ដេចដ៏ពិតប្រាកដ។ ហើយចូរអ្នក(មូហាំម៉ាត់)កុំអន្ទះសានឹង(ការសូត្រ)គម្ពីរគួរអានមុននឹងគេផ្ដល់វ៉ាហ៊ីឱ្យអ្នកចប់សព្វគ្រប់។ ហើយចូរអ្នកពោលថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាបន្ថែមចំណេះដឹងដល់ខ្ញុំផង។

وَلَقَدۡ عَهِدۡنَآ إِلَىٰٓ ءَادَمَ مِن قَبۡلُ فَنَسِيَ وَلَمۡ
نَجِدۡ لَهُۥ عَزۡمٗا ﴿١١٥﴾

១១៥-ហើយជាការពិតណាស់ យើង(អល់ឡោះ)បានបញ្ជាទៅចំពោះអាដាំកាលពីមុន(កុំឱ្យគេបរិភោគផ្លែឈើនេះ) តែគេបែរជាបានភ្លេច(ល្មើស)ទៅវិញ ហើយយើងមិនបានឃើញគេតាំងចិត្តធ្វើអំពើនោះឡើយ។

وَإِذۡ قُلۡنَا لِلۡمَلَٰٓئِكَةِ ٱسۡجُدُواْ لِأٓدَمَ فَسَجَدُوٓاْ
إِلَّآ إِبۡلِيسَ أَبَىٰ ﴿١١٦﴾

១១៦-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានមានបន្ទូលទៅកាន់ពួកម៉ាឡាអ៊ីកាត់ថាៈ ចូរពួកអ្នកស៊ូជូតចំពោះអាដាំ។ ពេលនោះពួកគេបានស៊ូជូតទាំងអស់គ្នា លើកលែងតែអ៊ីព្លីសប៉ុណ្ណោះដែលបានប្រកែក។

فَقُلۡنَا يَٰٓـَٔادَمُ إِنَّ هَٰذَا عَدُوّٞ لَّكَ وَلِزَوۡجِكَ
فَلَا يُخۡرِجَنَّكُمَا مِنَ ٱلۡجَنَّةِ فَتَشۡقَىٰٓ ﴿١١٧﴾

១១៧-ហើយយើងបានមានបន្ទូលថា : ឱអាដាំ! ពិតប្រាកដណាស់ នេះ(អ៊ីព្លីស)ជាសត្រូវរបស់អ្នក និងភរិយារបស់អ្នក ដូច្នេះចូរកុំបណ្ដោយឱ្យគេបណ្ដេញអ្នកទាំងពីរចេញពីឋានសួគ៌ជាហេតុនាំឱ្យអ្នកមានការលំបាកឱ្យសោះ។

إِنَّ لَكَ أَلَّا تَجُوعَ فِيهَا وَلَا تَعۡرَىٰ ﴿١١٨﴾

១១៨-ពិតប្រាកដណាស់ សម្រាប់អ្នកនៅក្នុងនោះ(ឋានសួគ៌)គឺអ្នកមិនអត់ឃ្លាន ហើយក៏មិនអាក្រាតដែរ។

وَأَنَّكَ لَا تَظۡمَؤُاْ فِيهَا وَلَا تَضۡحَىٰ ﴿١١٩﴾

១១៩-ហើយពិតប្រាកដណាស់ នៅក្នុងនោះអ្នកមិនស្រេកទឹក ហើយក៏មិនត្រូវកំដៅព្រះអាទិត្យដែរ ។

فَوَسۡوَسَ إِلَيۡهِ ٱلشَّيۡطَٰنُ قَالَ يَٰٓـَٔادَمُ هَلۡ
أَدُلُّكَ عَلَىٰ شَجَرَةِ ٱلۡخُلۡدِ وَمُلۡكٖ لَّا يَبۡلَىٰ ﴿١٢٠﴾

១២០-ក្រោយមកស្ហៃតនបានញុះញង់គាត់ថា: ឱអាដាំ! តើចង់ឱ្យខ្ញុំបង្ហាញអ្នកពីដើមឈើអមតៈ និងភាពជាអ្នកគ្រប់គ្រងដែលគ្មានពេលអន្តរាយដែរឬទេ?

فَأَكَلَا مِنۡهَا فَبَدَتۡ لَهُمَا سَوۡءَٰتُهُمَا وَطَفِقَا
يَخۡصِفَانِ عَلَيۡهِمَا مِن وَرَقِ ٱلۡجَنَّةِۚ وَعَصَىٰٓ
ءَادَمُ رَبَّهُۥ فَغَوَىٰ ﴿١٢١﴾

១២១-ហើយគេទាំងពីរនាក់បានទទួលទានផ្លែឈើនោះ ស្រាប់តែភាពអាក្រាតរបស់គេទាំងពីរក៏បានលាតត្រដាងចំពោះគេទាំងពីរ ហើយគេទាំងពីរបានបេះស្លឹកឈើឋានសួគ៌យកមកបិទបាំងលើរាងកាយរបស់គេទាំងពីរ ។ ហើយអាដាំបានធ្វើខុសនឹងបទបញ្ជានៃម្ចាស់របស់គេ និងបានវង្វេង( ពីការពិត) ។

ثُمَّ ٱجۡتَبَٰهُ رَبُّهُۥ فَتَابَ عَلَيۡهِ وَهَدَىٰ ﴿١٢٢﴾

១២២-ក្រោយមក ម្ចាស់របស់គាត់បានជ្រើសរើសគាត់ ហើយទ្រង់បានអភ័យទោសឱ្យគាត់ និងបានចង្អុលបង្ហាញគាត់( ទៅរកមាគ៌ាដ៏ត្រឹមត្រូវ)វិញ ។

قَالَ ٱهۡبِطَا مِنۡهَا جَمِيعَۢاۖ بَعۡضُكُمۡ لِبَعۡضٍ
عَدُوّٞۖ فَإِمَّا يَأۡتِيَنَّكُم مِّنِّي هُدٗى فَمَنِ ٱتَّبَعَ
هُدَايَ فَلَا يَضِلُّ وَلَا يَشۡقَىٰ ﴿١٢٣﴾

១២៣-ទ្រង់បានមានបន្ទូលថា: ចូរអ្នកទាំងពីរ( អាដាំ និងហាវ៉ា) ចុះចេញពីឋានសួគ៌ទាំងអស់គ្នាចុះ ។ ពួកអ្នកមួយចំនួនគឺជាសត្រូវនឹងគ្នា ។ ហើយប្រសិនបើការចង្អុលបង្ហាញរបស់យើងមកដល់ពួកអ្នក អ្នកណាហើយដែលបានដើរតាមការចង្អុលបង្ហាញរបស់យើងនោះ គឺគេមិនវង្វេង( នៅក្នុងលោកិយ) និងមិនលំបាកឡើយ( នៅថ្ងៃបរលោក) ។

وَمَنۡ أَعۡرَضَ عَن ذِكۡرِي فَإِنَّ لَهُۥ مَعِيشَةٗ
ضَنكٗا وَنَحۡشُرُهُۥ يَوۡمَ ٱلۡقِيَٰمَةِ أَعۡمَىٰ ﴿١٢٤﴾

១២៤-តែបើអ្នកណាហើយបានងាកចេញពីការដាស់តឿន( គម្ពីរគួរអាន) របស់យើង ពិតប្រាកដណាស់សម្រាប់គេគឺការរស់នៅយ៉ាងលំបាកវេទនា( ទោះបីជារូបភាពខាងក្រៅរបស់គេជាអ្នកមាន ឬមានឋានៈខ្ពង់ខ្ពស់ក៏ដោយ) ហើយយើងនឹងប្រមូលផ្តុំគេនៅថ្ងៃបរលោកដោយភ្នែកខ្វាក់ ។

قَالَ رَبِّ لِمَ حَشَرۡتَنِيٓ أَعۡمَىٰ وَقَدۡ كُنتُ
بَصِيرٗا ﴿١٢٥﴾

១២៥-គេបាននិយាយថា: ឱម្ចាស់របស់ខ្ញុំ! ហេតុអ្វីបានជាទ្រង់ប្រមូលផ្តុំខ្ញុំមកវិញដោយពិការភ្នែក ហើយជាការពិតណាស់ ខ្ញុំធ្លាប់ជាអ្នកភ្នែកភ្លឺទេតើ?

قَالَ كَذَٰلِكَ أَتَتۡكَ ءَايَٰتُنَا فَنَسِيتَهَاۖ وَكَذَٰلِكَ ٱلۡيَوۡمَ تُنسَىٰ ١٢٦

១២៦-ទ្រង់បានមានបន្ទូលថា: ដូច្នោះហើយ អាយ៉ាត់ៗរបស់យើងបានមកដល់អ្នក តែអ្នកបានភ្លេចវា(ដោយបោះបង់មិនព្រមជឿ)។ ដូច្នេះថ្ងៃនេះអ្នកក៏ត្រូវគេភ្លេចវិញដែរ។

وَكَذَٰلِكَ نَجۡزِي مَنۡ أَسۡرَفَ وَلَمۡ يُؤۡمِنۢ بِـَٔايَٰتِ رَبِّهِۦۚ وَلَعَذَابُ ٱلۡأٓخِرَةِ أَشَدُّ وَأَبۡقَىٰٓ ١٢٧

១២៧-យើងក៏តបស្នងដូច្នោះដែរចំពោះអ្នកដែលបានល្មើស(នឹងបទបញ្ញា) និងមិនព្រមជឿនឹងអាយ៉ាត់ៗនៃម្ចាស់របស់គេ។ ហើយទារុណកម្មនៅថ្ងៃបរលោកគឺខ្លាំងក្លាបំផុត និងជាអមតៈ។

أَفَلَمۡ يَهۡدِ لَهُمۡ كَمۡ أَهۡلَكۡنَا قَبۡلَهُم مِّنَ ٱلۡقُرُونِ يَمۡشُونَ فِي مَسَٰكِنِهِمۡۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ لِّأُوْلِي ٱلنُّهَىٰ ١٢٨

១២៨- តើវា(គម្ពីរគួរអាន)មិនបានបង្ហាញដល់ពួកគេ(ពួកមូស្ហរីគីន)ទេឬថា យើងបានបំផ្លាញមុនពួកគេជាច្រើនជំនាន់មកហើយ ខណៈដែលពួកគេធ្វើដំណើរឆ្លងកាត់លំនៅដ្ឋាន(បាក់បែក)របស់ពួកគេ (ពួកជំនាន់មុន)នោះ? ពិតប្រាកដណាស់ ក្នុងរឿងនោះគឺជាភស្តុតាងៗសម្រាប់អ្នកដែលមានប្រាជ្ញាឈ្វេងយល់។

وَلَوۡلَا كَلِمَةٞ سَبَقَتۡ مِن رَّبِّكَ لَكَانَ لِزَامٗا وَأَجَلٞ مُّسَمّٗى ١٢٩

១២៩-ហើយប្រសិនបើគ្មានការកំណត់(ទារុណកម្ម)ជាមុនពីម្ចាស់របស់ពួកអ្នក និងគ្មានការកំណត់ពេលវេលាច្បាស់លាស់ទេនោះ គេពិតជានឹងទទួលរង(ទារុណកម្មនៅក្នុងលោកិយនេះ)ជាមិនខាន។

فَٱصۡبِرۡ عَلَىٰ مَا يَقُولُونَ وَسَبِّحۡ بِحَمۡدِ رَبِّكَ قَبۡلَ طُلُوعِ ٱلشَّمۡسِ وَقَبۡلَ غُرُوبِهَاۖ وَمِنۡ ءَانَآيِٕ ٱلَّيۡلِ فَسَبِّحۡ وَأَطۡرَافَ ٱلنَّهَارِ لَعَلَّكَ تَرۡضَىٰ ١٣٠

១៣០-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់ចំពោះអ្វីដែលពួកគេនិយាយ និងត្រូវលើកតម្កើងដោយការសរសើរចំពោះម្ចាស់របស់អ្នកមុនពេលថ្ងៃរះ(សឡាតស៊ូពួហ)និងមុនពេលថ្ងៃលិច(សឡាតអាសើរ)។ ហើយពេលខ្លះនៃរាត្រី(សឡាតម៉ាហ្គរិប និងអ៊ីស្ហាក) និងចុងនៃពេលថ្ងៃ(សឡាតស៊ូហ្ហូរ) ចូរអ្នកលើកតម្កើងចុះ សង្ឃឹមថាអ្នកនឹងពេញចិត្ត។

وَلَا تَمُدَّنَّ عَيۡنَيۡكَ إِلَىٰ مَا مَتَّعۡنَا بِهِۦٓ أَزۡوَٰجٗا مِّنۡهُمۡ زَهۡرَةَ ٱلۡحَيَوٰةِ ٱلدُّنۡيَا لِنَفۡتِنَهُمۡ فِيهِۚ وَرِزۡقُ رَبِّكَ خَيۡرٞ وَأَبۡقَىٰ ١٣١

១៣១-ហើយចូរអ្នកកុំសម្លឹងមើលដោយភ្នែកទាំងពីររបស់អ្នកទៅចំពោះអ្វីដែលយើងបានប្រទានភាពរីករាយឱ្យពួកគេគ្រប់ប្រភេទ ដែលជាការលំអនឹងវានៃជីវិតរស់នៅក្នុងលោកិយនេះដើម្បីយើងនឹងសាកល្បងពួកគេចំពោះវាឱ្យសោះ។ ហើយលាភសក្ការៈនៃម្ចាស់របស់អ្នកគឺល្អប្រសើរ និងស្ថិតស្ថេរជាអមតៈ។

وَأۡمُرۡ أَهۡلَكَ بِٱلصَّلَوٰةِ وَٱصۡطَبِرۡ عَلَيۡهَاۖ لَا نَسۡـَٔلُكَ رِزۡقٗاۖ نَّحۡنُ نَرۡزُقُكَۗ وَٱلۡعَٰقِبَةُ

១៣២-ហើយចូរអ្នក(មូហាំម៉ាត់)បង្គាប់ឱ្យក្រុមគ្រួសាររបស់អ្នកប្រតិបត្តិសឡាត និងអត់ធ្មត់ចំពោះវា។ យើងមិនសុំលាភសក្ការៈពីអ្នកឡើយ។ យើងទេដែលជាអ្នកប្រទានលាភសក្ការៈឱ្យអ្នក

لِلتَّقْوَىٰ ﴿١٣٢﴾

នោះ។ ហើយលទ្ធផលចុងក្រោយ(ឋានសួគ៌)គឺសម្រាប់អ្នកដែលកោតខ្លាចអល់ឡោះ។

وَقَالُواْ لَوْلَا يَأْتِينَا بِـَٔايَةٍ مِّن رَّبِّهِۦٓۚ أَوَلَمْ تَأْتِهِم بَيِّنَةُ مَا فِى ٱلصُّحُفِ ٱلْأُولَىٰ ﴿١٣٣﴾

១៣៣-ពួកគេ(ពួកពុតត្បុត)បាននិយាយថា: ហេតុអ្វីបានជាគេ(មូហាំម៉ាត់)មិននាំភស្តុតាងណាមួយពីម្ចាស់របស់គេមកឱ្យពួកយើង(បញ្ជាក់ថាគេជាព្យាការីពិតប្រាកដ)។ តើភស្តុតាងច្បាស់លាស់ដែលមាននៅក្នុងគម្ពីរមុនៗ(គម្ពីរតាវរ៉តនិងគម្ពីរអ៊ិញជីល)មិនបានមកដល់ពួកគេទេឬ?

وَلَوْ أَنَّآ أَهْلَكْنَـٰهُم بِعَذَابٍ مِّن قَبْلِهِۦ لَقَالُواْ رَبَّنَا لَوْلَآ أَرْسَلْتَ إِلَيْنَا رَسُولًا فَنَتَّبِعَ ءَايَـٰتِكَ مِن قَبْلِ أَن نَّذِلَّ وَنَخْزَىٰ ﴿١٣٤﴾

១៣៤-ហើយពិតប្រាកដណាស់ ប្រសិនបើយើងបានបំផ្លាញពួកគេដោយទារុណកម្មណាមួយមុននឹងវា(បញ្ជូនមូហាំម៉ាត់មក)ពួកគេពិតជានិយាយថា: ឱម្ចាស់របស់ពួកយើង! ហេតុអ្វីបានជាទ្រង់មិនបញ្ជូនអ្នកនាំសារម្នាក់មកឱ្យពួកយើង ដើម្បីយើងនឹងធ្វើតាមអាយ៉ាត់ៗរបស់ទ្រង់មុននឹងពួកយើងត្រូវអាប់ឱននិងអាម៉ាស់មុខ?

قُلْ كُلٌّ مُّتَرَبِّصٌ فَتَرَبَّصُواْۖ فَسَتَعْلَمُونَ مَنْ أَصْحَـٰبُ ٱلصِّرَٰطِ ٱلسَّوِىِّ وَمَنِ ٱهْتَدَىٰ ﴿١٣٥﴾

១៣៥-ចូរអ្នក(មូហាំម៉ាត់)ពោលថា: គ្រប់ៗគ្នា(អ្នកមានជំនឿនិងគ្មានជំនឿ)គឺសុទ្ធតែរង់ចាំមើល(ការសន្យារបស់ទ្រង់) ដូច្នេះចូរអ្នកទាំងអស់គ្នារង់ចាំមើលចុះ! ពួកអ្នកនឹងដឹងថា: អ្នកណាដើរតាមមាគ៌ាដ៏ត្រឹមត្រូវ និងអ្នកណាដែលបានទទួលការចង្អុលបង្ហាញ(ពីអល់ឡោះ)។

## سورة الأنبياء

## ជំពូកអាល់អាំពីយ៉ាក

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

ٱقْتَرَبَ لِلنَّاسِ حِسَابُهُمْ وَهُمْ فِى غَفْلَةٍ مُّعْرِضُونَ ﴿١﴾

១-ចំពោះមនុស្សលោក ការជំនុំជំរះរបស់ពួកគេជិតបានមកដល់ហើយ ខណៈដែលពួកគេស្ថិតនៅក្នុងភាពព្រងើយកន្តើយងាកចេញ(ពីការជឿជាក់ព្រមាន)នោះ។

مَا يَأْتِيهِم مِّن ذِكْرٍ مِّن رَّبِّهِم مُّحْدَثٍ إِلَّا ٱسْتَمَعُوهُ وَهُمْ يَلْعَبُونَ ﴿٢﴾

២-គ្មានការរំលឹក(អាយ៉ាត់នៃគម្ពីរគួរអាន)ដែលថ្មីណាមួយពីម្ចាស់របស់ពួកគេមកដល់ពួកគេក្រៅពីពួកគេបានស្ដាប់វាដោយលេងសើច

لَاهِيَةً قُلُوبُهُمْۗ وَأَسَرُّواْ ٱلنَّجْوَى ٱلَّذِينَ ظَلَمُواْ

៣-ខណៈដែលចិត្តរបស់ពួកគេព្រងើយកន្តើយនោះឡើយ។ ហើយពួកដែលបានបំពានបានខ្សឹបខ្សៀវគ្នាជាសម្ងាត់ថា: (មូហាំ-

هَلْ هَٰذَآ إِلَّا بَشَرٌ مِّثْلُكُمْ ۖ أَفَتَأْتُونَ ٱلسِّحْرَ وَأَنتُمْ تُبْصِرُونَ ﴿٣﴾

ម៉ាត់) នេះគ្រាន់តែជាមនុស្សធម្មតាដូចពួកអ្នកប៉ុណ្ណោះ។ តើពួកអ្នកព្រមទទួលយកមន្តអាគម ខណៈដែលពួកអ្នកឃើញច្បាស់នោះឬ?

قَالَ رَبِّى يَعْلَمُ ٱلْقَوْلَ فِى ٱلسَّمَآءِ وَٱلْأَرْضِ ۖ وَهُوَ ٱلسَّمِيعُ ٱلْعَلِيمُ ﴿٤﴾

៤-គាត់(មូហាំម៉ាត់)បានពោល(ទៅកាន់ពួកគេ)ថាៈ ម្ចាស់របស់ខ្ញុំដឹងនូវពាក្យសំដី(ខ្សឹបខ្សៀវអ្នកដែល)នៅលើមេឃ និងផែនដី។ ហើយទ្រង់មហាឮ មហាដឹង។

بَلْ قَالُوٓا۟ أَضْغَٰثُ أَحْلَٰمٍۭ بَلِ ٱفْتَرَىٰهُ بَلْ هُوَ شَاعِرٌ فَلْيَأْتِنَا بِـَٔايَةٍ كَمَآ أُرْسِلَ ٱلْأَوَّلُونَ ﴿٥﴾

៥-ផ្ទុយទៅវិញពួកគេបាននិយាយ(ដោយបដិសេធ)ថាៈ (គម្ពីរគួរអាននេះ)គឺជាភាពច្របូកច្របល់នៃការយល់សប្តិមិនពិត ឬគេ(មូហាំម៉ាត់)បានប្រឌិតវាឡើង ឬក៏គេគ្រាន់តែជាកវីនិពន្ធម្នាក់ប៉ុណ្ណោះ។ ដូច្នេះ ចូរអ្នកនាំមកឱ្យយើងនូវមុជីហ្សាត់ណាមួយដូចអ្វីដែលគេបានបញ្ជូនឱ្យពួកមុនៗ។

مَآ ءَامَنَتْ قَبْلَهُم مِّن قَرْيَةٍ أَهْلَكْنَٰهَآ ۖ أَفَهُمْ يُؤْمِنُونَ ﴿٦﴾

៦- គ្មានភូមិស្រុក(ប្រជាជន)ណាមួយដែលយើងបានបំផ្លាញវាមុនពួកគេ(ពួកមូស្ហ្ទីគីនម៉ាក្កះ)មានជំនឿនោះឡើយ។ ដូច្នេះ តើពួកគេនឹងមានជំនឿឬទេ?

وَمَآ أَرْسَلْنَا قَبْلَكَ إِلَّا رِجَالًا نُّوحِىٓ إِلَيْهِمْ ۖ فَسْـَٔلُوٓا۟ أَهْلَ ٱلذِّكْرِ إِن كُنتُمْ لَا تَعْلَمُونَ ﴿٧﴾

៧-ហើយយើងមិនបានបញ្ជូនអ្នកណាម្នាក់មុនអ្នក(មូហាំម៉ាត់)ក្រៅពីបុរសៗដែលយើងផ្តល់វ៉ាហ៊ីដល់ពួកគេនោះឡើយ។ ហេតុនេះចូរពួកអ្នក(ពួកមូស្ហ្ទីគីន)សួរពួក(អះលីគីតាប)ដែលមានចំណេះដឹងចុះ ប្រសិនបើពួកអ្នកមិនបានដឹង។

وَمَا جَعَلْنَٰهُمْ جَسَدًا لَّا يَأْكُلُونَ ٱلطَّعَامَ وَمَا كَانُوا۟ خَٰلِدِينَ ﴿٨﴾

៨-ហើយយើងមិនបានបង្កើតពួកគេ(អ្នកនាំសារ)ដោយមានខ្លួនប្រាណមិនចេះបរិភោគចំណីអាហារនោះទេ ហើយពួកគេក៏គ្មានជីវិតអមតៈដែរ។

ثُمَّ صَدَقْنَٰهُمُ ٱلْوَعْدَ فَأَنجَيْنَٰهُمْ وَمَن نَّشَآءُ وَأَهْلَكْنَا ٱلْمُسْرِفِينَ ﴿٩﴾

៩-បន្ទាប់មក យើងបានបំពេញកិច្ចសន្យាចំពោះពួកគេ(អ្នកនាំសារ) ហើយយើងបានសង្គ្រោះពួកគេនិងអ្នកណាដែលយើងមានចេតនា តែយើងក៏បានបំផ្លាញពួកដែលបំពានដែរ។

لَقَدْ أَنزَلْنَآ إِلَيْكُمْ كِتَٰبًا فِيهِ ذِكْرُكُمْ ۖ أَفَلَا تَعْقِلُونَ ﴿١٠﴾

១០-ជាការពិតណាស់ យើងបានបញ្ចុះគម្ពីរមួយ(គម្ពីរគួរអាន)ឱ្យពួកអ្នក ដែលនៅក្នុងនោះមានការក្រើនរំលឹកចំពោះពួកអ្នក។ តើពួកអ្នកមិនគិតពិចារណាទេឬ?

وَكَمْ قَصَمْنَا مِن قَرْيَةٍ كَانَتْ ظَالِمَةً وَأَنشَأْنَا

១១-ហើយយើងបានបំផ្លាញភូមិស្រុក(ប្រជាជន)ដែលបាន

بَعۡدَهَا قَوۡمًا ءَاخَرِينَ ١١

បំពាននោះជាច្រើនមកហើយ រួចយើងបានបង្កើតក្រុមមួយផ្សេងទៀតបន្ទាប់ពីពួកគេ ។

فَلَمَّآ أَحَسُّواْ بَأۡسَنَآ إِذَا هُم مِّنۡهَا
يَرۡكُضُونَ ١٢

១២-ហើយនៅពេលដែលពួកគេ( អ្នកភូមិស្រុក) បានឃើញទារុណកម្មរបស់យើង( មកដល់) ស្រាប់តែពួកគេរត់គេចពីវា ។

لَا تَرۡكُضُواْ وَٱرۡجِعُوٓاْ إِلَىٰ مَآ أُتۡرِفۡتُمۡ فِيهِ
وَمَسَٰكِنِكُمۡ لَعَلَّكُمۡ تُسۡـَٔلُونَ ١٣

១៣-( ម៉ាឡាអ៊ីកាត់បានពោលទៅកាន់ពួកគេថា) ពួកអ្នកកុំរត់គេចឱ្យសោះ ហើយចូរពួកអ្នកត្រឡប់ទៅរកភាពសប្បាយរីករាយ និងលំនៅដ្ឋាន( ដ៏ប្រណីត) របស់ពួកអ្នកវិញចុះ ពួកអ្នកនឹងត្រូវគេសួរជាមិនខាន ។

قَالُواْ يَٰوَيۡلَنَآ إِنَّا كُنَّا ظَٰلِمِينَ ١٤

១៤-ពួកគេបាននិយាយថា: ឱវិនាសអន្តរាយហើយពួកយើង! ពិតប្រាកដណាស់ ពួកយើងគឺជាពួកដែលធ្លាប់បានបំពានមែន ។

فَمَا زَالَت تِّلۡكَ دَعۡوَىٰهُمۡ حَتَّىٰ جَعَلۡنَٰهُمۡ
حَصِيدًا خَٰمِدِينَ ١٥

១៥-ហើយការស្រែកហៅរបស់ពួកគេនោះនៅតែបន្ត រហូតទាល់តែយើងធ្វើឱ្យពួកគេដូចជាដំណាំដែលត្រូវបានគេច្រូតកាត់ ដែលមិនអាចរស់បានទៀតឡើយ ។

وَمَا خَلَقۡنَا ٱلسَّمَآءَ وَٱلۡأَرۡضَ وَمَا بَيۡنَهُمَا
لَٰعِبِينَ ١٦

១៦-ហើយយើងមិនបានបង្កើតមេឃ និងផែនដី និងអ្វីៗដែលនៅចន្លោះវាទាំងពីរជាការលេងសើចនោះឡើយ ។

لَوۡ أَرَدۡنَآ أَن نَّتَّخِذَ لَهۡوٗا لَّٱتَّخَذۡنَٰهُ مِن لَّدُنَّآ
إِن كُنَّا فَٰعِلِينَ ١٧

១៧-ប្រសិនបើយើងមានបំណងយកជាល្បែងលេងសើច ( មហេសី ឬបុត្រ) គឺយើងនឹងយកវាពីអ្នកដែលនៅក្បែរយើង ប្រសិនបើយើងចង់ធ្វើមែននោះ ។

بَلۡ نَقۡذِفُ بِٱلۡحَقِّ عَلَى ٱلۡبَٰطِلِ فَيَدۡمَغُهُۥ فَإِذَا
هُوَ زَاهِقٞۚ وَلَكُمُ ٱلۡوَيۡلُ مِمَّا تَصِفُونَ ١٨

១៨-ផ្ទុយទៅវិញ យើងនឹងបំភ្លឺភាពពិត( គម្ពីរគួរអាន) ទៅលើភាពមិនពិត ។ ហើយវាបំផ្លាញភាពមិនពិត ពេលនោះភាពមិនពិតស្រាប់តែរលាយសាបសូន្យ ។ ហើយទារុណកម្មគឺសម្រាប់ពួកអ្នក ដោយសារតែអ្វីដែលពួកអ្នក និយាយប្រឌិត( ថាអល់ឡោះមាន មហេសី និងបុត្រ) នោះ ។

وَلَهُۥ مَن فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ وَمَنۡ
عِندَهُۥ لَا يَسۡتَكۡبِرُونَ عَنۡ عِبَادَتِهِۦ وَلَا

១៩-ហើយអ្នកដែលនៅលើមេឃជាច្រើនជាន់ និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់តែមួយគត់ ។ ហើយអ្នកនៅក្បែរទ្រង់គឺពួកគេមិនក្រអឺតក្រទម និងមិននឿយហត់ក្នុងការគោរពសក្ការៈចំពោះ

يَسۡتَحۡسِرُونَ ﴿١٩﴾

ទ្រង់ឡើយ ។

يُسَبِّحُونَ ٱلَّيۡلَ وَٱلنَّهَارَ لَا يَفۡتُرُونَ ﴿٢٠﴾

២០-ដោយពួកគេនាំគ្នាលើកតម្កើងទ្រង់ទាំងយប់ទាំងថ្ងៃមិនធុញទ្រាន់ឡើយ ។

أَمِ ٱتَّخَذُوٓاْ ءَالِهَةٗ مِّنَ ٱلۡأَرۡضِ هُمۡ يُنشِرُونَ ﴿٢١﴾

២១-តើពួកគេ(ពួកមូស្ហរីគីន)បានយកព្រះនានាដែលធ្វើអំពីដី (មកគោរពសក្ការៈ) ដែលព្រះទាំងនោះគ្មានលទ្ធភាពអាចប្រោសជីវិតដែលស្លាប់បានឬ?

لَوۡ كَانَ فِيهِمَآ ءَالِهَةٌ إِلَّا ٱللَّهُ لَفَسَدَتَاۚ فَسُبۡحَٰنَ ٱللَّهِ رَبِّ ٱلۡعَرۡشِ عَمَّا يَصِفُونَ ﴿٢٢﴾

២២-ប្រសិនបើនៅលើមេឃ និងផែនដីមានម្ចាស់ច្រើនក្រៅពីអល់ឡោះមែននោះ វាទាំងពីរច្បាស់ជាអន្តរាយជាមិនខាន ។ ដូច្នេះអល់ឡោះជាម្ចាស់នៃអារ៉ស្ហមហាស្អាតស្អំអំពីអ្វីដែលពួកគេនិយាយប្រឌិតនោះទៅទៀត ។

لَا يُسۡـَٔلُ عَمَّا يَفۡعَلُ وَهُمۡ يُسۡـَٔلُونَ ﴿٢٣﴾

២៣-ទ្រង់មិនត្រូវគេសួរដេញដោលនូវអ្វីដែលទ្រង់ធ្វើនោះឡើយ តែពួកគេទេដែលត្រូវគេ(អល់ឡោះ)សួរដេញដោលនោះ ។

أَمِ ٱتَّخَذُواْ مِن دُونِهِۦٓ ءَالِهَةٗۖ قُلۡ هَاتُواْ بُرۡهَٰنَكُمۡۖ هَٰذَا ذِكۡرُ مَن مَّعِيَ وَذِكۡرُ مَن قَبۡلِيۚ بَلۡ أَكۡثَرُهُمۡ لَا يَعۡلَمُونَ ٱلۡحَقَّۖ فَهُم مُّعۡرِضُونَ ﴿٢٤﴾

២៤-តើពួកគេយកព្រះនានាធ្វើជាម្ចាស់ក្រៅពីទ្រង់ឬ? ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចូរពួកអ្នកនាំភស្តុតាងរបស់ពួកអ្នកមកចុះ ។ នេះ(គម្ពីរគួរអាន)គឺជាការរំលឹករបស់អ្នកដែលនៅជាមួយខ្ញុំ និងជាការរំលឹករបស់អ្នកដែលមុនខ្ញុំ ។ ផ្ទុយទៅវិញ ពួកគេភាគច្រើនមិនដឹងការពិតឡើយ ដូច្នេះពួកគេគឺជាពួកដែលងាកចេញ (ពីការពិត) ។

وَمَآ أَرۡسَلۡنَا مِن قَبۡلِكَ مِن رَّسُولٍ إِلَّا نُوحِيٓ إِلَيۡهِ أَنَّهُۥ لَآ إِلَٰهَ إِلَّآ أَنَا۠ فَٱعۡبُدُونِ ﴿٢٥﴾

២៥-ហើយយើងមិនបានបញ្ជូនអ្នកនាំសារណាម្នាក់មុនអ្នកក្រៅពីយើងផ្តល់វ៉ាហ៊ីទៅឱ្យគេថាៈ ពិតប្រាកដណាស់ គ្មានម្ចាស់ណាផ្សេងដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីយើងនោះឡើយ ។ ដូច្នេះចូរពួកអ្នកគោរពសក្ការៈមកចំពោះយើងចុះ ។

وَقَالُواْ ٱتَّخَذَ ٱلرَّحۡمَٰنُ وَلَدٗاۗ سُبۡحَٰنَهُۥۚ بَلۡ عِبَادٞ مُّكۡرَمُونَ ﴿٢٦﴾

២៦-ហើយពួកគេបាននិយាយថាៈ ម្ចាស់មហាសប្បុរសមានបុត្រ ។ ទ្រង់មហាស្អាតស្អំ(អំពីអ្វីដែលពួកគេនិយាយ) ។ ផ្ទុយទៅវិញ ពួកគេ(ម៉ាឡាអ៊ីកាត់)គឺជាខ្ញុំរបស់អល់ឡោះដែលត្រូវគេលើកតម្កើង ។

لَا يَسۡبِقُونَهُۥ بِٱلۡقَوۡلِ وَهُم بِأَمۡرِهِۦ

២៧-ពួកគេ(ម៉ាឡាអ៊ីកាត់)មិនហ៊ានផ្តើមសំដីមុនទ្រង់ឡើយ ហើយពួកគេប្រតិបត្តិតាមការបញ្ជារបស់ទ្រង់ ។

يَعۡمَلُونَ ٢٧

يَعۡلَمُ مَا بَيۡنَ أَيۡدِيهِمۡ وَمَا خَلۡفَهُمۡ وَلَا يَشۡفَعُونَ إِلَّا لِمَنِ ٱرۡتَضَىٰ وَهُم مِّنۡ خَشۡيَتِهِۦ مُشۡفِقُونَ ٢٨

២៨-ទ្រង់ដឹងនូវអ្វីដែល(នឹងកើតឡើង)នៅខាងមុខពួកគេ(ថ្ងៃបរលោក) និងអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមក(ក្នុងលោកិយ)។ ហើយពួកគេ(ម៉ាឡាអ៊ីកាត់)មិនអាចធ្វើអន្តរាគមន៍ដល់អ្នកណាក្រៅពីអ្នកដែលទ្រង់បានយល់ព្រមឡើយ ហើយពួកគេប្រុងប្រយ័ត្នដោយកោតខ្លាចទៅចំពោះទ្រង់។

۞ وَمَن يَقُلۡ مِنۡهُمۡ إِنِّيٓ إِلَٰهٞ مِّن دُونِهِۦ فَذَٰلِكَ نَجۡزِيهِ جَهَنَّمَۚ كَذَٰلِكَ نَجۡزِي ٱلظَّٰلِمِينَ ٢٩

២៩-ហើយអ្នកណាម្នាក់ក្នុងចំណោមពួកគេដែលនិយាយថាៈ ពិតប្រាកដណាស់ ខ្ញុំគឺជាម្ចាស់ផ្សេងពីទ្រង់នោះ យើងនឹងតបស្នងដល់គេនូវនរកជើហាន់ណាំជាមិនខាន។ ដូច្នោះដែរ យើងនឹងតបស្នងចំពោះពួកដែលបំពាន។

أَوَلَمۡ يَرَ ٱلَّذِينَ كَفَرُوٓاْ أَنَّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ كَانَتَا رَتۡقٗا فَفَتَقۡنَٰهُمَاۖ وَجَعَلۡنَا مِنَ ٱلۡمَآءِ كُلَّ شَيۡءٍ حَيٍّۚ أَفَلَا يُؤۡمِنُونَ ٣٠

៣០-តើពួកដែលគ្មានជំនឿមិនបានដឹងទេឬថាៈ ពិតប្រាកដណាស់ មេឃជាច្រើនជាន់ និងផែនដីវាទាំងពីរបានជាប់គ្នា តែយើងបានបំបែកវាទាំងពីរឱ្យឃ្លាតពីគ្នាវិញនោះ? ហើយយើងបានបង្កើតអ្វីៗទាំងអស់ដែលមានជីវិតអំពីទឹក។ ដូច្នេះតើពួកគេនៅតែមិនជឿទៀតឬ?

وَجَعَلۡنَا فِي ٱلۡأَرۡضِ رَوَٰسِيَ أَن تَمِيدَ بِهِمۡ وَجَعَلۡنَا فِيهَا فِجَاجٗا سُبُلٗا لَّعَلَّهُمۡ يَهۡتَدُونَ ٣١

៣១-ហើយយើងបានបង្កើតឱ្យមានភ្នំជាច្រើននៅលើផែនដី ដើម្បីកុំឱ្យវារញ្ជួយដល់ពួកគេ និងយើងបានបង្កើតឱ្យមានផ្លូវជាច្រើនដែលទូលាយនៅលើវា សង្ឃឹមថាពួកគេទទួលបានការចង្អុលបង្ហាញ(ក្នុងកិច្ចការរស់នៅ)។

وَجَعَلۡنَا ٱلسَّمَآءَ سَقۡفٗا مَّحۡفُوظٗاۖ وَهُمۡ عَنۡ ءَايَٰتِهَا مُعۡرِضُونَ ٣٢

៣២-ហើយយើងបានបង្កើតមេឃធ្វើជាដំបូល(សម្រាប់ផែនដី)ដែលត្រូវបានការពារ(មិនឱ្យធ្លាក់)។ តែពួកគេនៅតែងាកចេញពីភស្តុតាងនានា(ព្រះអាទិត្យ ព្រះច័ន្ទ ហ្វូងតារា...)របស់វា។

وَهُوَ ٱلَّذِي خَلَقَ ٱلَّيۡلَ وَٱلنَّهَارَ وَٱلشَّمۡسَ وَٱلۡقَمَرَۖ كُلّٞ فِي فَلَكٖ يَسۡبَحُونَ ٣٣

៣៣-ហើយទ្រង់ជាអ្នកដែលបានបង្កើតពេលយប់ និងពេលថ្ងៃ ហើយនិងព្រះអាទិត្យ ព្រមទាំងព្រះច័ន្ទ។ ដោយពួកវាទាំងអស់ដើរតាមគន្លងរបស់វា។

وَمَا جَعَلۡنَا لِبَشَرٖ مِّن قَبۡلِكَ ٱلۡخُلۡدَۖ أَفَإِيْن

៣៤-ហើយយើងមិនបានប្រទានជីវិតអមតៈឱ្យមនុស្សលោកណា

مِّتَّ فَهُمُ ٱلۡخَٰلِدُونَ ٣٤

ម្នាក់មុនអ្នក( មូហាំម៉ាត់ )ឡើយ ។ ដូច្នេះ ប្រសិនបើអ្នកស្លាប់ តើពួកគេ( ពួកប្រឆាំង )មានជីវិតអមតៈឬ?

كُلُّ نَفۡسٖ ذَآئِقَةُ ٱلۡمَوۡتِۗ وَنَبۡلُوكُم بِٱلشَّرِّ وَٱلۡخَيۡرِ فِتۡنَةٗۖ وَإِلَيۡنَا تُرۡجَعُونَ ٣٥

៣៥-រាល់ៗរបស់ដែលមានជីវិតនឹងភ្លក្សរសជាតិនៃការស្លាប់ ។ ហើយយើងនឹងសាកល្បងពួកអ្នកនូវប្រការអាក្រក់ និងប្រការល្អ ។ ហើយពួកអ្នកនឹងត្រូវវិលត្រឡប់មកកាន់យើងវិញ ។

وَإِذَا رَءَاكَ ٱلَّذِينَ كَفَرُوٓاْ إِن يَتَّخِذُونَكَ إِلَّا هُزُوًا أَهَٰذَا ٱلَّذِي يَذۡكُرُ ءَالِهَتَكُمۡ وَهُم بِذِكۡرِ ٱلرَّحۡمَٰنِ هُمۡ كَٰفِرُونَ ٣٦

៣៦-ហើយនៅពេលដែលពួកប្រឆាំងបានឃើញអ្នក( មូហាំម៉ាត់ ) ពួកគេមិននិយាយអ្វីក្រៅពីការមើលងាយថាៈ តើគេនេះ ឬជាអ្នកដែលនិយាយអាក្រក់ពីម្ចាស់( ព្រះនានា )របស់ពួកអ្នកនោះ? ដោយពួកគេគ្មានជំនឿនឹងការរំលឹកនៃម្ចាស់មហាសប្បុរសឡើយ ។

خُلِقَ ٱلۡإِنسَٰنُ مِنۡ عَجَلٖۚ سَأُوْرِيكُمۡ ءَايَٰتِي فَلَا تَسۡتَعۡجِلُونِ ٣٧

៣៧-គេបានបង្កើតមនុស្សលោកមកគឺមានលក្ខណៈអន្ទះសា ។ យើងនឹងបង្ហាញពួកអ្នកនូវភស្តុតាង( ទារុណកម្ម )របស់យើង ។ ដូច្នេះ ចូរពួកអ្នកកុំអន្ទះសាសុំពីយើងពេក ។

وَيَقُولُونَ مَتَىٰ هَٰذَا ٱلۡوَعۡدُ إِن كُنتُمۡ صَٰدِقِينَ ٣٨

៣៨-ហើយពួកគេសួរថាៈ តើការសន្យា( ទារុណកម្ម )នេះនឹងមកដល់នៅពេលណា ប្រសិនបើពួកអ្នកគឺជាអ្នកដែលនិយាយពិតមែននោះ?

لَوۡ يَعۡلَمُ ٱلَّذِينَ كَفَرُواْ حِينَ لَا يَكُفُّونَ عَن وُجُوهِهِمُ ٱلنَّارَ وَلَا عَن ظُهُورِهِمۡ وَلَا هُمۡ يُنصَرُونَ ٣٩

៣៩-ប្រសិនបើពួកដែលប្រឆាំងដឹងពីពេលវេលាដែលពួកគេមិនអាចការពារភ្លើងនរកចេញពីមុខ និងខ្នងរបស់ពួកគេ ហើយគ្មានអ្នកណាជួយពួកគេនោះ ( ប្រាកដជាពួកគេមិនទាមទារចង់ឃើញទារុណកម្មរបស់អល់ឡោះឡើយ) ។

بَلۡ تَأۡتِيهِم بَغۡتَةٗ فَتَبۡهَتُهُمۡ فَلَا يَسۡتَطِيعُونَ رَدَّهَا وَلَا هُمۡ يُنظَرُونَ ٤٠

៤០-ផ្ទុយទៅវិញ វា( ភ្លើងនរក )នឹងមកដល់ពួកគេភ្លាមៗ ហើយវាធ្វើឱ្យពួកគេស្រឡាំងកាំង ។ ពេលនោះពួកគេមិនអាចទប់ទល់នឹងវាបានឡើយ ហើយពួកគេក៏មិនត្រូវគេពន្យារ( ទារុណកម្ម )ដែរ ។

وَلَقَدِ ٱسۡتُهۡزِئَ بِرُسُلٖ مِّن قَبۡلِكَ فَحَاقَ بِٱلَّذِينَ سَخِرُواْ مِنۡهُم مَّا كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ٤١

៤១-ហើយជាការពិតណាស់ បណ្ដាអ្នកនាំសារមុនៗអ្នក( មូហាំម៉ាត់ )ក៏ត្រូវបានគេចំអកឡកឡឺយដែរ ។ ពេលនោះ( ទារុណកម្ម ) បានហ៊ុំព័ទ្ធពួកដែលបានប្រមាថមើលងាយបណ្ដាអ្នកនាំសារនូវអ្វីដែលពួកគេធ្លាប់បានចំអកឡកឡឺយចំពោះវានោះ ។

قُلۡ مَن يَكۡلَؤُكُم بِٱلَّيۡلِ وَٱلنَّهَارِ مِنَ

៤២-ចូរអ្នក( មូហាំម៉ាត់ )សួរថាៈ តើមានអ្នកណាការពារពួកអ្នកនៅពេលយប់ និងពេលថ្ងៃពីទារុណកម្មរបស់ម្ចាស់មហា

ٱلرَّحۡمَٰنِۚ بَلۡ هُمۡ عَن ذِكۡرِ رَبِّهِم
مُّعۡرِضُونَ ﴿٤٢﴾

សប្បុរស? ផ្ទុយទៅវិញ ពួកគេគឺជាពួកដែលងាកចេញពីការរំលឹកនៃម្ចាស់របស់ពួកគេ។

أَمۡ لَهُمۡ ءَالِهَةٞ تَمۡنَعُهُم مِّن دُونِنَاۚ لَا
يَسۡتَطِيعُونَ نَصۡرَ أَنفُسِهِمۡ وَلَا هُم مِّنَّا
يُصۡحَبُونَ ﴿٤٣﴾

៤៣-ឬមួយពួកគេមានព្រះផ្សេងពីយើង ដែលអាចការពារពួកគេ(ពីទារុណកម្មរបស់យើង)? ពួកគេ(ព្រះនានា)គ្មានសមត្ថភាពនឹងជួយខ្លួនឯង ហើយពួកគេក៏គ្មានការគាំពារពីយើងដែរ។

بَلۡ مَتَّعۡنَا هَٰٓؤُلَآءِ وَءَابَآءَهُمۡ حَتَّىٰ طَالَ
عَلَيۡهِمُ ٱلۡعُمُرُۗ أَفَلَا يَرَوۡنَ أَنَّا نَأۡتِي
ٱلۡأَرۡضَ نَنقُصُهَا مِنۡ أَطۡرَافِهَآۚ أَفَهُمُ
ٱلۡغَٰلِبُونَ ﴿٤٤﴾

៤៤-ផ្ទុយទៅវិញ យើងបានផ្តល់ភាពសប្បាយរីករាយដល់ពួកគេ និងជីដូនជីតារបស់ពួកគេរហូតដល់ពួកគេមានអាយុវែង(ទើបពួកគេភ្លើតភ្លើនភ្លេចខ្លួនក្នុងការគោរពសក្ការៈមកចំពោះយើង)។ តើពួកគេ(ពួកប្រឆាំង)មិនបានឃើញទេឬថា ពិតប្រាកដណាស់ យើងរំដោះយកទឹកដីឱ្យ(អ្នកមានជំនឿ)ដោយយើងកាត់បន្ថយវា(ពីពួកប្រឆាំង)បន្តិចម្តងៗនៅគ្រប់ទិសទីនោះ? ដូច្នេះ តើពួកគេជាពួកដែលឈ្នះឬ?

قُلۡ إِنَّمَآ أُنذِرُكُم بِٱلۡوَحۡيِۚ وَلَا يَسۡمَعُ
ٱلصُّمُّ ٱلدُّعَآءَ إِذَا مَا يُنذَرُونَ ﴿٤٥﴾

៤៥-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តាមពិតខ្ញុំគ្រាន់តែដាស់តឿនព្រមានពួកអ្នកដោយវ៉ាហ៊ីប៉ុណ្ណោះ។ ហើយអ្នកដែលថ្លង់ស្តាប់មិនឮការអំពាវនាវឡើយ កាលបើមានគេដាស់តឿនព្រមានពួកគេនោះ។

وَلَئِن مَّسَّتۡهُمۡ نَفۡحَةٞ مِّنۡ عَذَابِ رَبِّكَ
لَيَقُولُنَّ يَٰوَيۡلَنَآ إِنَّا كُنَّا ظَٰلِمِينَ ﴿٤٦﴾

៤៦-ហើយជាការពិតណាស់ ប្រសិនបើទារុណកម្មពីម្ចាស់របស់អ្នកប៉ះពួកគេតែបន្តិច ពួកគេពិតជានិយាយ(ដោយស្រែកយំ)ថាៈ ឱវិនាសអន្តរាយហើយពួកយើង! ពិតប្រាកដណាស់ ពួកយើងគឺជាពួកដែលបានបំពាន។

وَنَضَعُ ٱلۡمَوَٰزِينَ ٱلۡقِسۡطَ لِيَوۡمِ ٱلۡقِيَٰمَةِ فَلَا
تُظۡلَمُ نَفۡسٞ شَيۡـٔٗاۖ وَإِن كَانَ مِثۡقَالَ
حَبَّةٖ مِّنۡ خَرۡدَلٍ أَتَيۡنَا بِهَاۗ وَكَفَىٰ بِنَا
حَٰسِبِينَ ﴿٤٧﴾

៤៧-ហើយយើងនឹងដាក់ជញ្ជីងយុត្តិធម៌នៅថ្ងៃបរលោក។ ដូច្នេះគ្រប់ៗរូបនឹងមិនត្រូវគេបំបាត់អ្វី(ទង្វើរបស់គេ)បន្តិចឡើយ។ ហើយសូម្បីវាមានទម្ងន់ដូចគ្រាប់ស្ពៃ ក៏យើងនាំវា(អំពើល្អ និងអំពើអាក្រក់)មកដែរ។ គ្រប់គ្រាន់ហើយយើងជាអ្នកជំនុំជំរះ។

وَلَقَدۡ ءَاتَيۡنَا مُوسَىٰ وَهَٰرُونَ ٱلۡفُرۡقَانَ وَضِيَآءٗ

៤៨-ហើយជាការពិតណាស់ យើងបានផ្តល់គម្ពីរ(តាវរ៉ត)ឱ្យ

وَذِكۡرٗا لِّلۡمُتَّقِينَ ٤٨

មូសា និងហារូន ជាពន្លឺ(ការចង្អុលបង្ហាញទៅរកផ្លូវល្អ)និងជាការរំលឹកសម្រាប់បណ្ដាអ្នកដែលកោតខ្លាចយើង។

ٱلَّذِينَ يَخۡشَوۡنَ رَبَّهُم بِٱلۡغَيۡبِ وَهُم مِّنَ ٱلسَّاعَةِ مُشۡفِقُونَ ٤٩

៤៩-គឺបណ្ដាអ្នកដែលកោតខ្លាចម្ចាស់របស់ពួកគេដោយអាថ៌-កំបាំង ហើយពួកគេខ្លាចថ្ងៃបរលោកបំផុត។

وَهَٰذَا ذِكۡرٞ مُّبَارَكٌ أَنزَلۡنَٰهُۚ أَفَأَنتُمۡ لَهُۥ مُنكِرُونَ ٥٠

៥០- ហើយនេះ(គម្ពីរគួរអាន)គឺជាការរំលឹកដ៏មានពរជ័យដែលយើងបានបញ្ចុះវាមក។ ដូច្នេះ តើពួកអ្នកបដិសេធនឹងវាឬ?

۞ وَلَقَدۡ ءَاتَيۡنَآ إِبۡرَٰهِيمَ رُشۡدَهُۥ مِن قَبۡلُ وَكُنَّا بِهِۦ عَٰلِمِينَ ٥١

៥១-ហើយជាការពិតណាស់ យើងបានប្រទានឱ្យអ៊ីព្រហ៊ីមនូវការចង្អុលបង្ហាញរបស់គេកាលពីមុន(ក្មេងវ័យ) ហើយយើងដឹងយ៉ាងច្បាស់អំពីគេ។

إِذۡ قَالَ لِأَبِيهِ وَقَوۡمِهِۦ مَا هَٰذِهِ ٱلتَّمَاثِيلُ ٱلَّتِيٓ أَنتُمۡ لَهَا عَٰكِفُونَ ٥٢

៥២-នៅពេលដែលគេ(អ៊ីព្រហ៊ីម)បានសួរទៅកាន់ឪពុក និងប្រជាជនរបស់គេថា៖ តើរូបបដិមាដែលពួកអ្នកនាំគ្នាគោរពសក្ការៈចំពោះវាទាំងនេះជាអ្វី?

قَالُواْ وَجَدۡنَآ ءَابَآءَنَا لَهَا عَٰبِدِينَ ٥٣

៥៣-ពួកគេឆ្លើយថា៖ ពួកយើងបានឃើញជីដូនជីតារបស់ពួកយើងគោរពសក្ការៈចំពោះពួកគេ។

قَالَ لَقَدۡ كُنتُمۡ أَنتُمۡ وَءَابَآؤُكُمۡ فِي ضَلَٰلٖ مُّبِينٖ ٥٤

៥៤-គាត់បានពោលថា៖ ជាការពិតណាស់ ពួកអ្នកនិងជីដូនជីតារបស់ពួកអ្នកបានស្ថិតក្នុងភាពវង្វេងយ៉ាងច្បាស់លាស់។

قَالُوٓاْ أَجِئۡتَنَا بِٱلۡحَقِّ أَمۡ أَنتَ مِنَ ٱللَّٰعِبِينَ ٥٥

៥៥-ពួកគេតបវិញថា៖ តើអ្នកនាំមកឱ្យយើងនូវការពិត ឬមួយអ្នកជាមនុស្សម្នាក់ក្នុងចំណោមពួកដែលនិយាយលេងសើច?

قَالَ بَل رَّبُّكُمۡ رَبُّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ ٱلَّذِي فَطَرَهُنَّ وَأَنَا۠ عَلَىٰ ذَٰلِكُم مِّنَ ٱلشَّٰهِدِينَ ٥٦

៥៦-គេ(អ៊ីព្រហ៊ីម)បានពោលទៅវិញថា៖ ផ្ទុយទៅវិញ ម្ចាស់របស់ពួកអ្នកគឺជាម្ចាស់គ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដីដែលទ្រង់បានបង្កើតវាទាំងនោះ ហើយខ្ញុំជាសាក្សីម្នាក់លើរឿងទាំងនោះ។

وَتَٱللَّهِ لَأَكِيدَنَّ أَصۡنَٰمَكُم بَعۡدَ أَن تُوَلُّواْ مُدۡبِرِينَ ٥٧

៥៧-ខ្ញុំស្បថនឹងអល់ឡោះថា៖ ខ្ញុំនឹងរៀបគម្រោងកំចាត់រូបបដិមាទាំងអស់របស់ពួកអ្នក ក្រោយពេលដែលពួកអ្នកត្រឡប់មក(ពីពិធីបុណ្យ)វិញ។

៥៨-ពេលនោះគេ( អ៊ីព្រហ៊ីម) ក៏បានវាយកំទេចរូបបដិមាទាំងនោះឱ្យទៅជាបំណែក១ លើកលែងតែរូបបដិមាមួយធំជាងគេប៉ុណ្ណោះ ដើម្បីឱ្យពួកគេត្រឡប់ទៅកាន់វា( ហើយសួរវា) ។

فَجَعَلَهُمۡ جُذَٰذًا إِلَّا كَبِيرًا لَّهُمۡ لَعَلَّهُمۡ إِلَيۡهِ يَرۡجِعُونَ ٥٨

៥៩-ពួកគេ( ពួកគ្មានជំនឿ) បាននិយាយថាៈ តើអ្នកណាបានធ្វើមកលើព្រះនានារបស់ពួកយើងបែបនេះ? ពិតប្រាកដណាស់ អ្នកនោះពិតជាស្ថិតក្នុងចំណោមពួកដែលល្មើស ។

قَالُواْ مَن فَعَلَ هَٰذَا بِـَٔالِهَتِنَآ إِنَّهُۥ لَمِنَ ٱلظَّٰلِمِينَ ٥٩

៦០-ពួកគេមួយចំនួនបាននិយាយថាៈពួកយើងបានឮយុវជនម្នាក់និយាយ( អាក្រក់) ពីពួកវា( រូបបដិមា) គេហៅគាត់ថាអ៊ីព្រហ៊ីម ។

قَالُواْ سَمِعۡنَا فَتًى يَذۡكُرُهُمۡ يُقَالُ لَهُۥٓ إِبۡرَٰهِيمُ ٦٠

៦១-ពួកគេបាននិយាយគ្នាថាៈចូរពួកអ្នកនាំគេមកនៅចំពោះមុខមហាជន ដើម្បីឱ្យពួកគេធ្វើជាសាក្សី( ចំពោះការប្រព្រឹត្តរបស់គេ) ។

قَالُواْ فَأۡتُواْ بِهِۦ عَلَىٰٓ أَعۡيُنِ ٱلنَّاسِ لَعَلَّهُمۡ يَشۡهَدُونَ ٦١

៦២-ពួកគេបានសួរថាៈ តើអ្នកឬដែលបានធ្វើបែបនេះមកលើព្រះរបស់ពួកយើងឱអ៊ីព្រហ៊ីម?

قَالُوٓاْ ءَأَنتَ فَعَلۡتَ هَٰذَا بِـَٔالِهَتِنَا يَٰٓإِبۡرَٰهِيمُ ٦٢

៦៣-គេ( អ៊ីព្រហ៊ីម) បានឆ្លើយថា ៈផ្ទុយទៅវិញ គឺរូបបដិមាធំជាងគេនេះហើយដែលបានធ្វើវានោះ ។ ដូច្នេះ ចូរពួកអ្នកសួរពួកវាចុះ ប្រសិនបើពួកវាចេះនិយាយមែននោះ ។

قَالَ بَلۡ فَعَلَهُۥ كَبِيرُهُمۡ هَٰذَا فَسۡـَٔلُوهُمۡ إِن كَانُواْ يَنطِقُونَ ٦٣

៦៤-ហើយ( ដោយពាក្យសំដីនេះ) ពួកគេបានបែរមកបន្ទោសគ្នារបស់ពួកគេវិញ ហើយក៏បាននិយាយថាៈ ពិតប្រាកដណាស់ ពួកអ្នកគឺជាពួកដែលបំពាន ។

فَرَجَعُوٓاْ إِلَىٰٓ أَنفُسِهِمۡ فَقَالُوٓاْ إِنَّكُمۡ أَنتُمُ ٱلظَّٰلِمُونَ ٦٤

៦៥-បន្ទាប់មក ពួកគេបានបែរក្បាល(វិលទៅរកភាពរឹងរូស) របស់ពួកគេវិញ(រួចនិយាយទៅកាន់អ៊ីព្រហ៊ីមថា) ជាការពិតណាស់ អ្នកបានដឹងហើយថា ពួកវាទាំងនេះមិនចេះនិយាយឡើយ ។

ثُمَّ نُكِسُواْ عَلَىٰ رُءُوسِهِمۡ لَقَدۡ عَلِمۡتَ مَا هَٰٓؤُلَآءِ يَنطِقُونَ ٦٥

៦៦-គាត់បានតបវិញថាៈ ដូច្នេះ តើពួកអ្នកនៅគោរពសក្ការៈចំពោះអ្វីដែលមិនផ្តល់ផលប្រយោជន៍ ឬមិនផ្តល់គ្រោះថ្នាក់អ្វីសោះដល់ពួកអ្នកផ្សេងពីអល់ឡោះឬ?

قَالَ أَفَتَعۡبُدُونَ مِن دُونِ ٱللَّهِ مَا لَا يَنفَعُكُمۡ شَيۡـٔٗا وَلَا يَضُرُّكُمۡ ٦٦

៦៧-គួរឱ្យអាម៉ាស់បំផុតចំពោះពួកអ្នក និងចំពោះអ្វី១ដែល

أُفّٖ لَّكُمۡ وَلِمَا تَعۡبُدُونَ مِن دُونِ ٱللَّهِۚ أَفَلَا

تَعۡقِلُونَ ﴿٦٧﴾

ពួកអ្នកនៅគោរពសក្ការៈក្រៅពីអល់ឡោះនោះ ។ តើពួកអ្នកមិនត្រិះរិះពិចារណាទេឬ?

قَالُواْ حَرِّقُوهُ وَٱنصُرُوٓاْ ءَالِهَتَكُمۡ إِن كُنتُمۡ فَٰعِلِينَ ﴿٦٨﴾

៦៨-ពួកគេបាននិយាយថាៈ ចូរពួកអ្នកដុតគេ(អ៊ីព្រហ៊ីម) និងនាំគ្នាជួយសង្គ្រោះព្រះរបស់ពួកអ្នក ប្រសិនបើពួកអ្នកចង់ធ្វើ ។

قُلۡنَا يَٰنَارُ كُونِي بَرۡدٗا وَسَلَٰمًا عَلَىٰٓ إِبۡرَٰهِيمَ ﴿٦٩﴾

៦៩-យើងបានមានបន្ទូលថាៈ ឱភ្លើង! ចូរប្រែក្លាយទៅជាត្រជាក់ និងផ្ដល់សុវត្ថិភាពដល់អ៊ីព្រហ៊ីមចុះ ។

وَأَرَادُواْ بِهِۦ كَيۡدٗا فَجَعَلۡنَٰهُمُ ٱلۡأَخۡسَرِينَ ﴿٧٠﴾

៧០-ហើយពួកគេមានបំណងរៀបចំផែនការអាក្រក់ចំពោះគេ (អ៊ីព្រហ៊ីម) ប៉ុន្ដែយើងបានធ្វើឱ្យពួកគេវិនាសខាតបង់ ។

وَنَجَّيۡنَٰهُ وَلُوطًا إِلَى ٱلۡأَرۡضِ ٱلَّتِي بَٰرَكۡنَا فِيهَا لِلۡعَٰلَمِينَ ﴿٧١﴾

៧១-ហើយយើងបានសង្គ្រោះគេ(អ៊ីព្រហ៊ីម) និងលូត(ពីទឹកដីអ៊ីរ៉ាក់) ទៅកាន់ទឹកដី(ស្ហាម) ដែលយើងបានប្រទានពរជ័យចំពោះទឹកដីនេះសម្រាប់ពិភពលោក ។

وَوَهَبۡنَا لَهُۥٓ إِسۡحَٰقَ وَيَعۡقُوبَ نَافِلَةٗۖ وَكُلّٗا جَعَلۡنَا صَٰلِحِينَ ﴿٧٢﴾

៧២-ហើយយើងបានប្រទានអ៊ីស្ហាក(ជាកូន) និងយ៉ាក់កូប(ជាចៅ) ឱ្យគេ(អ៊ីព្រហ៊ីម) ថែមទៀត ។ ហើយយើងបានធ្វើឱ្យពួកគេក្លាយជាអ្នកដែលល្អត្រឹមត្រូវ ។

وَجَعَلۡنَٰهُمۡ أَئِمَّةٗ يَهۡدُونَ بِأَمۡرِنَا وَأَوۡحَيۡنَآ إِلَيۡهِمۡ فِعۡلَ ٱلۡخَيۡرَٰتِ وَإِقَامَ ٱلصَّلَوٰةِ وَإِيتَآءَ ٱلزَّكَوٰةِۖ وَكَانُواْ لَنَا عَٰبِدِينَ ﴿٧٣﴾

៧៣-ហើយយើងបានធ្វើឱ្យពួកគេក្លាយទៅជាអ្នកដឹកនាំដើម្បីចង្អុលបង្ហាញផ្លូវ(ដល់មនុស្សលោក) តាមបទបញ្ជារបស់យើង ។ ហើយយើងបានផ្ដល់វ៉ាហ៊ីដល់ពួកគេឱ្យសាងអំពើល្អ និងប្រតិបត្តិសឡាត ហើយនិងបរិច្ចាគហ្សាកាត់ ។ ហើយពួកគេគឺជាអ្នកដែលបានគោរពសក្ការៈមកចំពោះយើង ។

وَلُوطًا ءَاتَيۡنَٰهُ حُكۡمٗا وَعِلۡمٗا وَنَجَّيۡنَٰهُ مِنَ ٱلۡقَرۡيَةِ ٱلَّتِي كَانَت تَّعۡمَلُ ٱلۡخَبَٰٓئِثَۚ إِنَّهُمۡ كَانُواْ قَوۡمَ سَوۡءٖ فَٰسِقِينَ ﴿٧٤﴾

៧៤-ហើយលូតវិញ យើងបានប្រទានឱ្យគេនូវគតិបណ្ឌិត និងចំណេះដឹង ហើយយើងបានសង្គ្រោះគេឱ្យផុតពីអ្នកភូមិដែលបានប្រព្រឹត្តអំពើស្មោកគ្រោក ។ ពិតប្រាកដណាស់ ពួកគេជាក្រុមអាក្រក់ដែលល្មើសនឹងបទបញ្ជារបស់យើង ។

وَأَدۡخَلۡنَٰهُ فِي رَحۡمَتِنَآۖ إِنَّهُۥ مِنَ ٱلصَّٰلِحِينَ ﴿٧٥﴾

៧៥-ហើយយើងបានបញ្ចូលគេទៅក្នុងក្ដីមេត្ដាករុណារបស់យើង ។ ពិតប្រាកដណាស់ គេស្ថិតក្នុងចំណោមអ្នកដែលសាងអំពើល្អ ។

وَنُوحًا إِذْ نَادَىٰ مِن قَبْلُ فَٱسْتَجَبْنَا لَهُۥ فَنَجَّيْنَٰهُ وَأَهْلَهُۥ مِنَ ٱلْكَرْبِ ٱلْعَظِيمِ ﴿٧٦﴾

៧៦-ហើយ(ចូរចងចាំអំពីរឿង)នូហ នៅពេលដែលគេបានបួងសួងសុំកាលពីមុន យើងក៏បានឆ្លើយតបចំពោះគេ។ ហើយយើងបានសង្គ្រោះគេនិងអ្នករួមជំនឿរបស់គេឱ្យផុតពីគ្រោះមហន្តរាយ(ទឹកជំនន់)ដ៏ធំ។

وَنَصَرْنَٰهُ مِنَ ٱلْقَوْمِ ٱلَّذِينَ كَذَّبُوا۟ بِـَٔايَٰتِنَآ ۚ إِنَّهُمْ كَانُوا۟ قَوْمَ سَوْءٍ فَأَغْرَقْنَٰهُمْ أَجْمَعِينَ ﴿٧٧﴾

៧៧-ហើយ យើងបានជួយគេឱ្យរួចផុតពីក្រុមដែលបានបដិសេធនឹងបណ្តាភស្តុតាងរបស់យើង។ ពិតប្រាកដណាស់ ពួកគេគឺជាក្រុមអាក្រក់។ ដូច្នេះហើយយើងបានពន្លិចពួកគេក្នុងទឹកទាំងអស់គ្នា។

وَدَاوُۥدَ وَسُلَيْمَٰنَ إِذْ يَحْكُمَانِ فِى ٱلْحَرْثِ إِذْ نَفَشَتْ فِيهِ غَنَمُ ٱلْقَوْمِ وَكُنَّا لِحُكْمِهِمْ شَٰهِدِينَ ﴿٧٨﴾

៧៨-ហើយ(ចូរចងចាំអំពីរឿង)ដាវូដ(ឪពុក)និងស៊ូឡៃម៉ាន(កូន)កាលនោះគេទាំងពីរបានកាត់ក្តីពីរឿងចំការដំណាំមួយដែលហ្វូងពពែរបស់ក្រុមអ្នកស្រុកបានចូលស៊ីខ្ទេចខ្ទីនៅយប់មួយ ហើយយើង(អល់ឡោះ)ជាសាក្សីចំពោះការកាត់ក្តីរបស់ពួកគេ។

فَفَهَّمْنَٰهَا سُلَيْمَٰنَ ۚ وَكُلًّا ءَاتَيْنَا حُكْمًا وَعِلْمًا ۚ وَسَخَّرْنَا مَعَ دَاوُۥدَ ٱلْجِبَالَ يُسَبِّحْنَ وَٱلطَّيْرَ ۚ وَكُنَّا فَٰعِلِينَ ﴿٧٩﴾

៧៩-ក្រោយមកយើងបានធ្វើឱ្យស៊ូឡៃម៉ានយល់អំពីរឿងក្តីនេះ។ ហើយយើងបានប្រទានភាពឈ្លាសវៃ និងចំណេះដឹងដល់គេទាំងពីរ។ រួចហើយយើងបានធ្វើឱ្យភ្នំនិងហ្វូងសត្វស្លាបជាច្រើនលើកតម្កើងសរសើរ(ចំពោះយើង)រួមជាមួយដាវូដ។ ហើយយើងគឺជាអ្នកធ្វើរឿងទាំងនេះ។

وَعَلَّمْنَٰهُ صَنْعَةَ لَبُوسٍ لَّكُمْ لِتُحْصِنَكُم مِّنۢ بَأْسِكُمْ ۖ فَهَلْ أَنتُمْ شَٰكِرُونَ ﴿٨٠﴾

៨០- ហើយយើងបានបង្រៀនគេ(ដាវូដ)ឱ្យចេះធ្វើអាវក្រោះសម្រាប់ពួកអ្នក ដើម្បីការពារពួកអ្នកក្នុងការធ្វើសង្គ្រាមរបស់ពួកអ្នក។ តើពួកអ្នកដឹងគុណឬទេ?

وَلِسُلَيْمَٰنَ ٱلرِّيحَ عَاصِفَةً تَجْرِى بِأَمْرِهِۦٓ إِلَى ٱلْأَرْضِ ٱلَّتِى بَٰرَكْنَا فِيهَا ۚ وَكُنَّا بِكُلِّ شَىْءٍ عَٰلِمِينَ ﴿٨١﴾

៨១-ហើយយើងបានផ្តល់ឱ្យស៊ូឡៃម៉ាននូវខ្យល់ព្យុះដែលបក់បោកតាមបញ្ជារបស់គេទៅកាន់ទឹកដីដែលយើងបានប្រទានពរជ័យចំពោះវា(ទឹកដីស្ហាម)។ ហើយយើងដឹងបំផុតនូវអ្វីៗទាំងអស់។

وَمِنَ ٱلشَّيَٰطِينِ مَن يَغُوصُونَ لَهُۥ وَيَعْمَلُونَ عَمَلًا دُونَ ذَٰلِكَ ۖ وَكُنَّا لَهُمْ حَٰفِظِينَ ﴿٨٢﴾

៨២-ហើយក្នុងចំណោមពួកស្ហៃតនមានអ្នកជ្រមុជទឹក(រកកំណប់ក្នុងបាតសមុទ្រ)ឱ្យគេ(ស៊ូឡៃម៉ាន) និងធ្វើកិច្ចការផ្សេងពីនោះទៀត ហើយយើងគឺជាអ្នកថែរក្សាពួកគេទាំងនោះ។

۞ وَأَيُّوبَ إِذۡ نَادَىٰ رَبَّهُۥٓ أَنِّي مَسَّنِيَ ٱلضُّرُّ وَأَنتَ أَرۡحَمُ ٱلرَّٰحِمِينَ ٨٣

៨៣-ហើយ(ចូរចងចាំអំពីរឿង)អៃយ៉ូបនៅពេលដែលគេបាន បួងសួងសុំម្ចាស់របស់គេថាៈ ពិតប្រាកដណាស់ ភាពគ្រោះថ្នាក់បាន មកបៀតបៀនខ្ញុំ ហើយមានតែទ្រង់ទេគឺជាអ្នកដែលអាណិត ស្រឡាញ់ជាងគេបំផុត។

فَٱسۡتَجَبۡنَا لَهُۥ فَكَشَفۡنَا مَا بِهِۦ مِن ضُرّٖۖ وَءَاتَيۡنَٰهُ أَهۡلَهُۥ وَمِثۡلَهُم مَّعَهُمۡ رَحۡمَةٗ مِّنۡ عِندِنَا وَذِكۡرَىٰ لِلۡعَٰبِدِينَ ٨٤

៨៤-ដូច្នេះហើយ យើងបានឆ្លើយតបនូវការបួងសួងសុំរបស់គេ ហើយយើងបានរំដោះភាពគ្រោះថ្នាក់ឱ្យចេញពីខ្លួនគេ។ ហើយយើង បានផ្តល់ឱ្យគេបានជួបជុំគ្រួសាររបស់គេឡើងវិញ ហើយនិងផ្តល់ឱ្យ ពួកគេដូចអ្វីដែលមាននៅជាមួយពួកគេពីមុនដោយក្តីមេត្តាករុណា ពីយើង និងជាការរំលឹកដល់បណ្តាអ្នកដែលគោរពសក្ការៈចំពោះ យើង។

وَإِسۡمَٰعِيلَ وَإِدۡرِيسَ وَذَا ٱلۡكِفۡلِۖ كُلّٞ مِّنَ ٱلصَّٰبِرِينَ ٨٥

៨៥-(ចូរអ្នកចងចាំអំពីរឿង)អ៊ីស្មាអ៊ីល អ៊ីទ្រីស និងហ្ស៊ុល គីហ្វលី គេទាំងអស់គឺស្ថិតក្នុងចំណោមអ្នកដែលអត់ធ្មត់។

وَأَدۡخَلۡنَٰهُمۡ فِي رَحۡمَتِنَآۖ إِنَّهُم مِّنَ ٱلصَّٰلِحِينَ ٨٦

៨៦-ហើយយើងបានបញ្ចូលពួកគេទៅក្នុងក្តីមេត្តាករុណារបស់ យើង។ ពិតប្រាកដណាស់ ពួកគេស្ថិតក្នុងចំណោមអ្នកដែលសាង អំពើល្អត្រឹមត្រូវ។

وَذَا ٱلنُّونِ إِذ ذَّهَبَ مُغَٰضِبٗا فَظَنَّ أَن لَّن نَّقۡدِرَ عَلَيۡهِ فَنَادَىٰ فِي ٱلظُّلُمَٰتِ أَن لَّآ إِلَٰهَ إِلَّآ أَنتَ سُبۡحَٰنَكَ إِنِّي كُنتُ مِنَ ٱلظَّٰلِمِينَ ٨٧

៨៧-ហើយ(ចូរអ្នកចងចាំអំពីរឿង)ហ្សាន់នូន(យូនូស)នៅ ពេលដែលគេចាកចេញទៅដោយកំហឹង ហើយគេបានគិតថា យើង (អល់ឡោះ)មិនធ្វើទណ្ឌកម្មលើរូបគេទេ[1] ក្រោយមកគេបានបួង សួងសុំក្នុងពេលងងឹតថាៈ ពិតប្រាកដណាស់ គ្មានម្ចាស់ណាផ្សេង ដែលត្រូវគោរពសក្ការៈពិតប្រាកដក្រៅពីទ្រង់ឡើយ។ ទ្រង់មហា ស្អាតស្អំ! ពិតប្រាកដណាស់ ខ្ញុំទេដែលស្ថិតក្នុងចំណោមអ្នកដែល បំពាននោះ។

فَٱسۡتَجَبۡنَا لَهُۥ وَنَجَّيۡنَٰهُ مِنَ ٱلۡغَمِّۚ وَكَذَٰلِكَ نُـۨجِي ٱلۡمُؤۡمِنِينَ ٨٨

៨៨-ដូច្នេះហើយ យើងបានឆ្លើយតបនឹងការបួងសួងសុំរបស់គេ ហើយយើងបានសង្គ្រោះគេឱ្យផុតពីភាពទុក្ខព្រួយ។ ហើយដូច្នោះ

---

១-សម័យនោះអល់ឡោះបានបញ្ជូនយូនូសឱ្យទៅអំពាវនាវប្រជាជនគ្រិច តែពួកគេមិនព្រមជឿអល់ឡោះឡើយ។ ទ្រង់ប្រើឱ្យ យូនូសព្យាយាមតស៊ូថែមទៀត ហើយពួកគេនៅតែមិនព្រមជឿដដែល។ យូនូសបានបោះបង់ការអំពាវនាវនេះ ហើយត្រឡប់មក វិញដោយកំហឹង ហើយគិតក្នុងចិត្តថាទ្រង់នឹងមិនដាក់ទណ្ឌកម្មលើរូបគាត់ឡើយ។

ដែរ យើងសង្គ្រោះបណ្តាអ្នកដែលមានជំនឿ ។

៨៩-ហើយ(ចូរចងចាំអំពីរឿង) ហ្សាការីយ៉ានៅពេលដែលគេបានបួងសួងសុំម្ចាស់របស់គេថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាកុំទុកឱ្យខ្ញុំនៅម្នាក់ឯង(ដោយគ្មានអ្នកបន្តត្រកូល) អ្វី ហើយទ្រង់គឺជាអ្នកដែលទទួលមរតកល្អជាងគេ ។

وَزَكَرِيَّآ إِذۡ نَادَىٰ رَبَّهُۥ رَبِّ لَا تَذَرۡنِي
فَرۡدٗا وَأَنتَ خَيۡرُ ٱلۡوَٰرِثِينَ ٨٩

៩០-ដូច្នេះហើយ យើងបានឆ្លើយតបនឹងការបួងសួងសុំរបស់គេ ហើយយើងបានប្រទានយ៉ះយ៉ាឱ្យគេ ហើយយើងបានព្យាបាលភរិយារបស់គេឱ្យគេ(មានកូន) ។ ពិតប្រាកដណាស់ ពួកគេស្វាហាប់ក្នុងការសាងអំពើល្អ ហើយពួកគេបួងសួងសុំមកចំពោះយើង ដោយក្តីសង្ឃឹម និងកោតខ្លាច ។ ហើយពួកគេគឺជាអ្នកដែលបានឱនលំទោនមកចំពោះយើង ។

فَٱسۡتَجَبۡنَا لَهُۥ وَوَهَبۡنَا لَهُۥ يَحۡيَىٰ وَأَصۡلَحۡنَا
لَهُۥ زَوۡجَهُۥٓۚ إِنَّهُمۡ كَانُواْ يُسَٰرِعُونَ فِي
ٱلۡخَيۡرَٰتِ وَيَدۡعُونَنَا رَغَبٗا وَرَهَبٗاۖ وَكَانُواْ
لَنَا خَٰشِعِينَ ٩٠

៩១-ហើយ(ចូរចងចាំអំពីរឿងម៉ារយ៉ាំ) ដែលនាងបានរក្សាភាពបរិសុទ្ធរបស់នាង ហើយយើងបានផ្លុំរូហ(ព្រលឹង) របស់យើងទៅក្នុងខ្លួនរបស់នាង[1] ហើយយើងបានយកនាងនិងបុត្រារបស់នាងធ្វើជាភស្តុតាងមួយសម្រាប់ពិភពទាំងអស់ ។

وَٱلَّتِيٓ أَحۡصَنَتۡ فَرۡجَهَا فَنَفَخۡنَا فِيهَا
مِن رُّوحِنَا وَجَعَلۡنَٰهَا وَٱبۡنَهَآ ءَايَةٗ
لِّلۡعَٰلَمِينَ ٩١

៩២-ពិតប្រាកដណាស់ នេះជាសាសនារបស់ពួកអ្នកគឺសាសនាតែមួយគត់(អ៊ីស្លាម)[2] ហើយយើងជាម្ចាស់របស់ពួកអ្នក ។ ដូច្នេះចូរពួកអ្នកគោរពសក្ការៈមកចំពោះយើង ។

إِنَّ هَٰذِهِۦٓ أُمَّتُكُمۡ أُمَّةٗ وَٰحِدَةٗ وَأَنَا۠ رَبُّكُمۡ
فَٱعۡبُدُونِ ٩٢

៩៣-ក៏ប៉ុន្តែពួកគេបានបែកបាក់គ្នា(ជាច្រើនក្រុម) ក្នុងកិច្ចការសាសនារបស់ពួកគេ (ដោយគោរពសក្ការៈក្រៅពីអល់ឡោះ) ។ ពួកគេទាំងអស់នឹងវិលត្រឡប់មកចំពោះយើងវិញ ។

وَتَقَطَّعُوٓاْ أَمۡرَهُم بَيۡنَهُمۡۖ كُلٌّ إِلَيۡنَا
رَٰجِعُونَ ٩٣

៩៤-ដូច្នេះ អ្នកណាហើយដែលសាងអំពើល្អ ខណៈដែលគេជាអ្នកមានជំនឿ គឺគ្មានការបដិសេធ(បាត់បង់) ចំពោះការតស៊ូប្រឹងប្រែងរបស់គេឡើយ ។ ហើយពិតប្រាកដណាស់ យើងជាអ្នកកត់ត្រាទុកសម្រាប់គេ(ក្នុងសៀវភៅកំណត់ហេតុ) ។

فَمَن يَعۡمَلۡ مِنَ ٱلصَّٰلِحَٰتِ وَهُوَ
مُؤۡمِنٞ فَلَا كُفۡرَانَ لِسَعۡيِهِۦ وَإِنَّا لَهُۥ
كَٰتِبُونَ ٩٤

---

១-អល់ឡោះបានបញ្ជូនជីព្រីលទៅផ្លុំដាក់ក្នុងកអាវរបស់នាង ក្រោយមកនាងក៏ចាប់ផ្តើមមានគភ៌ដោយគ្មានប្តី ។

២-បណ្តាអ្នកនាំសារ និងណាពីទាំងអស់មានសាសនាតែមួយគត់ គឺសាសនាអ៊ីស្លាម ។

وَحَرَٰمٌ عَلَىٰ قَرۡيَةٍ أَهۡلَكۡنَٰهَآ أَنَّهُمۡ لَا
يَرۡجِعُونَ ﴿٩٥﴾

៩៥-ហើយគេ(អល់ឡោះ)មិនអនុញ្ញាតឱ្យត្រឡប់(មកលើលោកិយនេះដើម្បីលុបលាងកំហុស)វិញទេចំពោះអ្នកភូមិស្រុកណាដែលយើងបានបំផ្លាញវារួច។

حَتَّىٰٓ إِذَا فُتِحَتۡ يَأۡجُوجُ وَمَأۡجُوجُ وَهُم
مِّن كُلِّ حَدَبٖ يَنسِلُونَ ﴿٩٦﴾

៩៦-រហូតទាល់តែនៅពេលដែលយ៉ាក់ជូច និងម៉ាក់ជូចត្រូវបានគេ(អល់ឡោះ)ដោះលែង(ពីរនាំង) ហើយពួកគេចេញពីតំបន់ខ្ពស់ទាំងហ្វូងៗ(ទៅគ្រប់ច្រកល្ហក)។

وَٱقۡتَرَبَ ٱلۡوَعۡدُ ٱلۡحَقُّ فَإِذَا هِيَ شَٰخِصَةٌ
أَبۡصَٰرُ ٱلَّذِينَ كَفَرُواْ يَٰوَيۡلَنَا قَدۡ كُنَّا فِي
غَفۡلَةٖ مِّنۡ هَٰذَا بَلۡ كُنَّا ظَٰلِمِينَ ﴿٩٧﴾

៩៧-ហើយការសន្យាពិតប្រាកដ(ថ្ងៃបរលោក)បានជិតមកដល់។ ពេលនោះ ចក្ខុរបស់ពួកដែលគ្មានជំនឿសម្លឹងមើល(ហេតុការណ៍ទាំងនេះ ដោយនិយាយថា) ឱវិនាសអន្តរាយហើយពួកយើង! ជាការពិតណាស់ ពួកយើងបានធ្វេសប្រហែសអំពីរឿងនេះ។ ផ្ទុយទៅវិញ ពួកយើងជាពួកដែលបានបំពាន។

إِنَّكُمۡ وَمَا تَعۡبُدُونَ مِن دُونِ ٱللَّهِ
حَصَبُ جَهَنَّمَ أَنتُمۡ لَهَا وَٰرِدُونَ ﴿٩٨﴾

៩៨-ពិតប្រាកដណាស់ ពួកអ្នកនិងអ្វីៗដែលពួកអ្នកនៅគោរពសក្ការៈផ្សេងពីអល់ឡោះនោះ គឺជាគ្រឿងដុតបញ្ឆេះរបស់នរកជើហាន់ណាំ ដោយពួកអ្នកពិតជានឹងត្រូវចូលទៅក្នុងវា។

لَوۡ كَانَ هَٰٓؤُلَآءِ ءَالِهَةٗ مَّا وَرَدُوهَاۖ وَكُلّٞ
فِيهَا خَٰلِدُونَ ﴿٩٩﴾

៩៩-ប្រសិនបើពួកវាទាំងនេះ ជាព្រះ(ដូចដែលពួកអ្នកអះអាង)មែននោះ គឺពួកវាមិនបានចូលនរកទេ។ ហើយពួកវាទាំងអស់នោះគឺស្ថិតនៅក្នុងវា(នរកជើហាន់ណាំ)ជាអមតៈ។

لَهُمۡ فِيهَا زَفِيرٞ وَهُمۡ فِيهَا لَا يَسۡمَعُونَ ﴿١٠٠﴾

១០០-ពួកគេនឹងស្រែកថ្ងូរយ៉ាងខ្លាំងនៅក្នុងឋាននរកនោះ ហើយពួកគេនៅក្នុងនោះគឺមិនឮអ្វីឡើយ។

إِنَّ ٱلَّذِينَ سَبَقَتۡ لَهُم مِّنَّا ٱلۡحُسۡنَىٰٓ
أُوْلَٰٓئِكَ عَنۡهَا مُبۡعَدُونَ ﴿١٠١﴾

១០១-ពិតប្រាកដណាស់ បណ្តាអ្នកដែលយើងបានកំណត់ភ័ព្វសំណាងល្អឱ្យពួកគេ អ្នកទាំងនោះត្រូវបានគេបញ្ចៀសឆ្ងាយពីភ្លើងនរក(ដូចជា អ៊ីសា ម៉ារយ៉ាំ អ៊ូហ្សៃរ)។

لَا يَسۡمَعُونَ حَسِيسَهَاۖ وَهُمۡ فِي مَا
ٱشۡتَهَتۡ أَنفُسُهُمۡ خَٰلِدُونَ ﴿١٠٢﴾

១០២-ពួកគេមិនឮសំឡេងអណ្តាតភ្លើងនរកបន្តិចណាឡើយ ដោយពួកគេស្ថិត(នៅក្នុងឋានសួគ៌)ជាអមតៈតាមអ្វីដែលខ្លួនរបស់ពួកគេប្រាថ្នា។

لَا يَحۡزُنُهُمُ ٱلۡفَزَعُ ٱلۡأَكۡبَرُ وَتَتَلَقَّىٰهُمُ
ٱلۡمَلَٰٓئِكَةُ هَٰذَا يَوۡمُكُمُ ٱلَّذِي كُنتُمۡ

១០៣-ភាពតក់ស្លុតយ៉ាងខ្លាំង(នៅថ្ងៃបរលោក)មិនធ្វើឱ្យពួកគេ(អ្នកមានជំនឿ)ព្រួយបារម្ភឡើយ ហើយបណ្តាម៉ាឡាអ៊ីកាត់

تُوعَدُونَ ﴿١٠٣﴾

ទទួលរាក់ទាក់ពួកគេ( ដោយពោលថា) នេះគឺជាថ្ងៃរបស់ពួកអ្នក ដែលគេបានសន្យានឹងពួកអ្នក ។

يَوْمَ نَطْوِى ٱلسَّمَآءَ كَطَىِّ ٱلسِّجِلِّ
لِلْكُتُبِ ۚ كَمَا بَدَأْنَآ أَوَّلَ خَلْقٍ نُّعِيدُهُۥ ۚ
وَعْدًا عَلَيْنَآ ۚ إِنَّا كُنَّا فَٰعِلِينَ ﴿١٠٤﴾

១០៤-នៅថ្ងៃដែលយើងនឹងមូរមេឃដូចជាការមូរក្រដាសទុកសម្រាប់សរសេរ ។ យើងនឹងបង្កើត( មនុស្សលោក) ជាថ្មីម្តងទៀត ( នៅថ្ងៃបរលោក) ដូចដែលយើងបានចាប់ផ្តើមបង្កើតមុនដំបូងដូច្នោះដែរ ។ ហើយយើងបានសន្យានូវកិច្ចសន្យាមួយចំពោះខ្លួនរបស់យើង ពិតប្រាកដណាស់យើងជាអ្នកធ្វើ( នូវអ្វីដែលយើងបានសន្យា) ។

وَلَقَدْ كَتَبْنَا فِى ٱلزَّبُورِ مِنۢ بَعْدِ ٱلذِّكْرِ
أَنَّ ٱلْأَرْضَ يَرِثُهَا عِبَادِىَ
ٱلصَّٰلِحُونَ ﴿١٠٥﴾

១០៥-ហើយជាការពិតណាស់ យើងបានសរសេរក្នុងគម្ពីរហ្សាពួរ ( ស៊ូហ៊ុហ្វអ៊ីព្រហ៊ីម គម្ពីរតាវ៉ រ៉ត គម្ពីរអ៊ីញជីល គម្ពីរគួរអាន) ក្រោយពី( យើងបានចាររួចនៅក្នុង) ឡាវហុលម៉ះហ្វ៊ូសថា: ពិតប្រាកដណាស់ផែនដី គឺខ្ញុំរបស់យើងដែលល្អត្រឹមត្រូវនឹងទទួលមរតកវា ។

إِنَّ فِى هَٰذَا لَبَلَٰغًا لِّقَوْمٍ عَٰبِدِينَ ﴿١٠٦﴾

១០៦-ពិតប្រាកដណាស់ នៅក្នុង( គម្ពីរគួរអាន) នេះគឺជាមេរៀនគ្រប់គ្រាន់សម្រាប់ក្រុមដែលគោរពសក្ការៈមកចំពោះយើង ។

وَمَآ أَرْسَلْنَٰكَ إِلَّا رَحْمَةً لِّلْعَٰلَمِينَ ﴿١٠٧﴾

១០៧-ហើយយើងមិនបានបញ្ជូនអ្នកឡើយ លើកលែងតែដើម្បីផ្តល់ក្តីមេត្តាករុណាទៅចំពោះពិភពលោកប៉ុណ្ណោះ ។

قُلْ إِنَّمَا يُوحَىٰٓ إِلَىَّ أَنَّمَآ إِلَٰهُكُمْ إِلَٰهٌ
وَٰحِدٌ ۖ فَهَلْ أَنتُم مُّسْلِمُونَ ﴿١٠٨﴾

១០៨-ចូរអ្នក( មូហាំម៉ាត់) ពោលថា: តាមពិត គេគ្រាន់តែផ្តល់វ៉ាហ៊ីមកឱ្យខ្ញុំថា: ពិតប្រាកដណាស់ ម្ចាស់របស់ពួកអ្នកគឺជាម្ចាស់តែមួយគត់( អល់ឡោះ) ។ ដូច្នេះ តើពួកអ្នកព្រមប្រគល់ខ្លួន ( ទៅចំពោះទ្រង់) ដែរឬទេ? ( គោរពសក្ការៈចំពោះអល់ឡោះតែមួយគត់) ។

فَإِن تَوَلَّوْا۟ فَقُلْ ءَاذَنتُكُمْ عَلَىٰ سَوَآءٍ ۖ وَإِنْ
أَدْرِىٓ أَقَرِيبٌ أَم بَعِيدٌ مَّا تُوعَدُونَ ﴿١٠٩﴾

១០៩-ហើយប្រសិនបើពួកគេងាកចេញ( ពីសាសនាអ៊ីស្លាម) នោះ ចូរអ្នកប្រាប់ពួកគេថា: ខ្ញុំបានជូនដំណឹងឱ្យពួកអ្នកដឹងដូចៗគ្នាហើយ ។ តែខ្ញុំមិនបានដឹងទេថា អ្វី( ទារុណកម្មនៃថ្ងៃបរលោក) ដែលគេសន្យានឹងពួកអ្នកនោះ តើវានៅជិតឬនៅឆ្ងាយឡើយ?

إِنَّهُۥ يَعْلَمُ ٱلْجَهْرَ مِنَ ٱلْقَوْلِ وَيَعْلَمُ مَا
تَكْتُمُونَ ﴿١١٠﴾

១១០-ពិតប្រាកដណាស់ ទ្រង់ដឹងនូវពាក្យសំដីខ្លាំងៗ( ជាចំហរ) និងដឹងនូវអ្វីដែលពួកអ្នកបិទបាំង ។

وَإِنۡ أَدۡرِي لَعَلَّهُۥ فِتۡنَةٞ لَّكُمۡ وَمَتَٰعٌ إِلَىٰ حِينٖ ﴿١١١﴾

១១១-ហើយខ្ញុំ(មូហាំម៉ាត់)ក៏មិនដឹងដែរ(ការពន្យារពេលធ្វើទារុណកម្មលើពួកអ្នកនោះ)ប្រហែលវាជាការសាកល្បងមួយសម្រាប់ពួកអ្នកនិងជាការសប្បាយរីករាយមួយរយៈកាលប៉ុណ្ណោះ។

قَٰلَ رَبِّ ٱحۡكُم بِٱلۡحَقِّۗ وَرَبُّنَا ٱلرَّحۡمَٰنُ ٱلۡمُسۡتَعَانُ عَلَىٰ مَا تَصِفُونَ ﴿١١٢﴾

១១២-គេ(មូហាំម៉ាត់)បានពោលថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាវិនិច្ឆ័យ(រវាងពួកយើង និងពួកប្រឆាំង)ដោយសច្ចៈធម៌ផង។ ហើយម្ចាស់របស់ពួកយើងគឺជាម្ចាស់មហាសប្បុរស ជាម្ចាស់ដែលពួកយើងសុំជំនួយប្រឆាំងនឹងអ្វីដែលពួកអ្នកចោទប្រកាន់(ថាអល់ឡោះមានកូន មូហាំម៉ាត់ជាគ្រូមន្តអាគម គម្ពីរគួរអានជាកំណាព្យ)។

## سورة الحج

## ជំពូកអាល់ហាជ្ជ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

يَٰٓأَيُّهَا ٱلنَّاسُ ٱتَّقُواْ رَبَّكُمۡۚ إِنَّ زَلۡزَلَةَ ٱلسَّاعَةِ شَيۡءٌ عَظِيمٞ ﴿١﴾

១-ឱមនុស្សលោក! ចូរពួកអ្នកកោតខ្លាចចំពោះម្ចាស់របស់ពួកអ្នក។ ពិតប្រាកដណាស់ ការរញ្ជួយផែនដីនៃថ្ងៃបរលោកគឺជាព្រឹត្តិការណ៍មួយដ៏ធំធេង។

يَوۡمَ تَرَوۡنَهَا تَذۡهَلُ كُلُّ مُرۡضِعَةٍ عَمَّآ أَرۡضَعَتۡ وَتَضَعُ كُلُّ ذَاتِ حَمۡلٍ حَمۡلَهَا وَتَرَى ٱلنَّاسَ سُكَٰرَىٰ وَمَا هُم بِسُكَٰرَىٰ وَلَٰكِنَّ عَذَابَ ٱللَّهِ شَدِيدٞ ﴿٢﴾

២-ថ្ងៃនោះ ពួកអ្នកនឹងឃើញព្រឹត្តិការណ៍ថ្ងៃបរលោករាល់ៗស្ត្រីដែលបំបៅកូនគឺភ្លេចភ្លាំងស្មារតីពីកូនដែលគេបំបៅ ហើយរាល់ៗស្ត្រីដែលមានផ្ទៃពោះវិញ គឺរលូតកូនរបស់គេ(ដោយក្ដីរន្ធត់)។ ហើយអ្នក(មូហាំម៉ាត់)នឹងឃើញមនុស្សទាំងអស់(វង្វេងវង្វាន់)ដូចជាស្រវឹង ខណៈដែលពួកគេមិនមែនស្រវឹងឡើយ ក៏ប៉ុន្តែទារុណកម្ម[1]របស់អល់ឡោះ(នៅថ្ងៃនោះ)គឺខ្លាំងក្លាបំផុត។

وَمِنَ ٱلنَّاسِ مَن يُجَٰدِلُ فِي ٱللَّهِ بِغَيۡرِ عِلۡمٖ وَيَتَّبِعُ كُلَّ شَيۡطَٰنٖ مَّرِيدٖ ﴿٣﴾

៣-ហើយក្នុងចំណោមមនុស្សលោក មានអ្នកឈ្លោះប្រកែកគ្នាក្នុងរឿងអល់ឡោះដោយគ្មានចំណេះដឹង ហើយគេដើរតាមរាល់ជំហានរបស់ស្ហៃតនដែលរឹងរូស។

كُتِبَ عَلَيۡهِ أَنَّهُۥ مَن تَوَلَّاهُ فَأَنَّهُۥ يُضِلُّهُۥ

៤-គេ(អល់ឡោះ)បានចារទៅលើវា(ស្ហៃតន)រួចជាស្រេច

---

១-ទណ្ឌកម្មពេលចាប់ផ្ដើមរញ្ជួយដីនៃថ្ងៃអវសានមានតែចំពោះអ្នកដែលគ្មានជំនឿតែប៉ុណ្ណោះ។ រីឯអ្នកមានជំនឿទាំងអស់ត្រូវអល់ឡោះដកយកជីវិតមុននឹងព្រឹត្តិការណ៍ទាំងនោះកើតឡើង។

وَيَهۡدِيهِ إِلَىٰ عَذَابِ ٱلسَّعِيرِ ٤

ហើយថា: ពិតប្រាកដណាស់ អ្នកណាហើយតាមវា វាពិតជាធ្វើឱ្យអ្នកនោះវង្វេង និងបង្ហាញផ្លូវគេទៅកាន់ទារុណកម្មនៃភ្លើងនរកជាមិនខាន។

يَٰٓأَيُّهَا ٱلنَّاسُ إِن كُنتُمۡ فِي رَيۡبٖ مِّنَ ٱلۡبَعۡثِ
فَإِنَّا خَلَقۡنَٰكُم مِّن تُرَابٖ ثُمَّ مِن نُّطۡفَةٖ ثُمَّ مِنۡ
عَلَقَةٖ ثُمَّ مِن مُّضۡغَةٖ مُّخَلَّقَةٖ وَغَيۡرِ مُخَلَّقَةٖ لِّنُبَيِّنَ
لَكُمۡۚ وَنُقِرُّ فِي ٱلۡأَرۡحَامِ مَا نَشَآءُ إِلَىٰٓ أَجَلٖ
مُّسَمّٗى ثُمَّ نُخۡرِجُكُمۡ طِفۡلٗا ثُمَّ لِتَبۡلُغُوٓاْ
أَشُدَّكُمۡۖ وَمِنكُم مَّن يُتَوَفَّىٰ وَمِنكُم
مَّن يُرَدُّ إِلَىٰٓ أَرۡذَلِ ٱلۡعُمُرِ لِكَيۡلَا يَعۡلَمَ مِنۢ
بَعۡدِ عِلۡمٖ شَيۡـٔٗاۚ وَتَرَى ٱلۡأَرۡضَ هَامِدَةٗ
فَإِذَآ أَنزَلۡنَا عَلَيۡهَا ٱلۡمَآءَ ٱهۡتَزَّتۡ وَرَبَتۡ
وَأَنۢبَتَتۡ مِن كُلِّ زَوۡجِۭ بَهِيجٖ ٥

៥-ឱមនុស្សលោក! ប្រសិនបើពួកអ្នកមានការសង្ស័យចំពោះថ្ងៃដែលគេធ្វើឱ្យមនុស្សរស់ឡើងវិញនោះ (ចូរអ្នកពិចារណាចុះថា) ពិតប្រាកដណាស់ យើងបានបង្កើតពួកអ្នកពីដី បន្ទាប់មកពីទឹកកាម បន្ទាប់មកក្លាយជាដុំឈាម បន្ទាប់មកទៀតក្លាយជាដុំសាច់ដែលមានរូបរាងពេញលក្ខណៈ និងខ្លះមិនពេញលក្ខណៈ(រលូត)។ ទាំងនេះគឺដើម្បីយើងបញ្ជាក់ដល់ពួកអ្នក(ពីសមត្ថភាពរបស់យើង និងការកកើតរបស់ពួកអ្នក)។ ហើយយើងតម្កល់វានៅក្នុងស្បូននូវអ្វីដែលយើងមានចេតនារហូតដល់ពេលកំណត់។ បន្ទាប់មកយើងបញ្ចេញពួកអ្នកមកជាទារក។ បន្ទាប់មកទៀតធ្វើឱ្យពួកអ្នកលូតលាស់ធំពេញវ័យ។ ហើយក្នុងចំណោមពួកអ្នកមានអ្នកត្រូវគេកំណត់ឱ្យស្លាប់ទៅវិញ(អាយុខ្លី)។ ហើយក្នុងចំណោមពួកអ្នកក៏មានអ្នកដែលត្រូវគេទុកឱ្យមានអាយុច្រើន ចាស់ជរា រហូតដល់គេមិនដឹងអ្វីសោះក្រោយពីគេបានដឹងរួចដែរ។ ហើយអ្នកនឹងបានឃើញដីហួតហែង(គ្មានអ្វីដុះ)។ តែនៅពេលដែលយើងបានបញ្ចុះទឹកភ្លៀងទៅលើវា វាក៏បានកម្រើក(មានជីវិត)និងរីកឡើងវិញ ហើយវាក៏បានធ្វើឱ្យដុះចេញនូវរុក្ខជាតិគ្រប់បែបយ៉ាងដ៏ស្រស់បំព្រង។

ذَٰلِكَ بِأَنَّ ٱللَّهَ هُوَ ٱلۡحَقُّ وَأَنَّهُۥ يُحۡيِ ٱلۡمَوۡتَىٰ
وَأَنَّهُۥ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٦

៦-ទាំងនោះ គឺដោយសារតែអល់ឡោះជាម្ចាស់ដ៏ពិតប្រាកដ។ ហើយពិតប្រាកដណាស់ ទ្រង់គឺជាអ្នកដែលធ្វើឱ្យអ្នកដែលស្លាប់រស់ឡើងវិញ(នៅថ្ងៃបរលោក)។ ហើយពិតប្រាកដណាស់ ទ្រង់ជាអ្នកមានអានុភាពលើអ្វីៗទាំងអស់។

وَأَنَّ ٱلسَّاعَةَ ءَاتِيَةٞ لَّا رَيۡبَ فِيهَا وَأَنَّ ٱللَّهَ
يَبۡعَثُ مَن فِي ٱلۡقُبُورِ ٧

៧-ហើយពិតប្រាកដណាស់ ថ្ងៃបរលោកនឹងមកដល់ដោយគ្មានការសង្ស័យអំពីវាឡើយ។ ហើយពិតប្រាកដណាស់ អល់ឡោះធ្វើឱ្យអ្នកដែលនៅក្នុងផ្នូរទាំងអស់រស់ឡើងវិញ។

وَمِنَ ٱلنَّاسِ مَن يُجَٰدِلُ فِي ٱللَّهِ بِغَيۡرِ عِلۡمٖ وَلَا
هُدٗى وَلَا كِتَٰبٖ مُّنِيرٖ ٨

៨-ហើយក្នុងចំណោមមនុស្សលោក មានអ្នកឈ្លោះប្រកែកគ្នាក្នុងរឿងអល់ឡោះដោយគ្មានចំណេះដឹងនិងគ្មានការចង្អុលបង្ហាញ

ហើយនិងគ្មានគម្ពីរណាមួយដែលបំភ្លឺច្បាស់លាស់ឡើយ ។

ثَانِيَ عِطْفِهِۦ لِيُضِلَّ عَن سَبِيلِ ٱللَّهِۖ لَهُۥ فِى
ٱلدُّنْيَا خِزْىٌۖ وَنُذِيقُهُۥ يَوْمَ ٱلْقِيَٰمَةِ عَذَابَ
ٱلْحَرِيقِ ﴿٩﴾

៩-ដោយអ្នកនោះបែរចេញ(ពីការពិត)ទាំងក្រអឺតក្រទមដើម្បីពង្វក់(អ្នកដទៃ)ឱ្យវង្វេងពីមាគ៌ារបស់អល់ឡោះ ។ គេនឹងមានការអាម៉ាស់ក្នុងលោកិយនេះ ។ ហើយយើងនឹងឱ្យគេភ្លក្សទារុណកម្មនៃភ្លើងនរកដែលឆាបឆេះនៅថ្ងៃបរលោក ។

ذَٰلِكَ بِمَا قَدَّمَتْ يَدَاكَ وَأَنَّ ٱللَّهَ لَيْسَ بِظَلَّٰمٍ
لِّلْعَبِيدِ ﴿١٠﴾

១០-នោះគឺដោយសារតែអ្វីដែលដៃទាំងពីររបស់អ្នកបានប្រព្រឹត្ត ។ ហើយពិតប្រាកដណាស់ អល់ឡោះមិនមែនជាអ្នកដែលបំពានលើខ្ញុំរបស់ទ្រង់ឡើយ ។

وَمِنَ ٱلنَّاسِ مَن يَعْبُدُ ٱللَّهَ عَلَىٰ حَرْفٍۖ فَإِنْ
أَصَابَهُۥ خَيْرٌ ٱطْمَأَنَّ بِهِۦۖ وَإِنْ أَصَابَتْهُ فِتْنَةٌ
ٱنقَلَبَ عَلَىٰ وَجْهِهِۦ خَسِرَ ٱلدُّنْيَا وَٱلْءَاخِرَةَۚ
ذَٰلِكَ هُوَ ٱلْخُسْرَانُ ٱلْمُبِينُ ﴿١١﴾

១១-ហើយក្នុងចំណោមមនុស្សលោក មានអ្នកដែលគោរពសក្ការៈចំពោះអល់ឡោះដោយចិត្តរារែក(ក្រោយពីបានចូលសាសនាអ៊ិស្លាមរួច) ។ ហើយប្រសិនបើគេបានជួបប្រទះនឹងប្រការល្អ គឺគេសប្បាយរីករាយនឹងវា(សាសនាអ៊ិស្លាម) ។ តែប្រសិនបើគេបានជួបប្រទះនឹងប្រការអាក្រក់ គេច្បាស់ជាត្រឡប់ទៅរកភាពដើមវិញ (ភាពគ្មានជំនឿ) ដោយបានខាតបង់ទាំងក្នុងលោកិយនិងថ្ងៃបរលោក ។ នោះវាគឺជាការខាតបង់ដ៏ច្បាស់លាស់ ។

يَدْعُوا۟ مِن دُونِ ٱللَّهِ مَا لَا يَضُرُّهُۥ وَمَا لَا
يَنفَعُهُۥۚ ذَٰلِكَ هُوَ ٱلضَّلَٰلُ ٱلْبَعِيدُ ﴿١٢﴾

១២-ពួកគេបួងសួងសុំផ្សេងពីអល់ឡោះនូវអ្វីដែលមិនអាចធ្វើឱ្យគេមានគ្រោះថ្នាក់ និងមិនផ្តល់ផលប្រយោជន៍ដល់គេឡើយ ។ នោះវាគឺជាការវង្វេងដ៏សែនឆ្ងាយ ។

يَدْعُوا۟ لَمَن ضَرُّهُۥٓ أَقْرَبُ مِن نَّفْعِهِۦۚ لَبِئْسَ
ٱلْمَوْلَىٰ وَلَبِئْسَ ٱلْعَشِيرُ ﴿١٣﴾

១៣-ពួកគេបួងសួងសុំពីអ្នកដែលផ្តល់គ្រោះថ្នាក់ដល់គេជាងផ្តល់ផលប្រយោជន៍ដល់គេ ។ នេះពិតជាអ្នកជួយដ៏អាក្រក់ និងជាគូកនដ៏អាក្រក់បំផុត ។

إِنَّ ٱللَّهَ يُدْخِلُ ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟
ٱلصَّٰلِحَٰتِ جَنَّٰتٍ تَجْرِى مِن تَحْتِهَا ٱلْأَنْهَٰرُۚ
إِنَّ ٱللَّهَ يَفْعَلُ مَا يُرِيدُ ﴿١٤﴾

១៤-ពិតប្រាកដណាស់ អល់ឡោះនឹងបញ្ចូលបណ្តាអ្នកមានជំនឿនិងបានសាងអំពើល្អនោះ ទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរកាត់ពីក្រោមវា ។ ពិតប្រាកដណាស់ អល់ឡោះធ្វើអ្វីដែលទ្រង់មានបំណង ។

مَن كَانَ يَظُنُّ أَن لَّن يَنصُرَهُ ٱللَّهُ فِى
ٱلدُّنْيَا وَٱلْءَاخِرَةِ فَلْيَمْدُدْ بِسَبَبٍ إِلَى ٱلسَّمَآءِ

១៥-អ្នកណាហើយដែលបានគិតថា អល់ឡោះនឹងមិនជួយគេ (មូហាំម៉ាត់)នៅលើលោកិយ និងថ្ងៃបរលោកនោះ ចូរឱ្យគេចងខ្សែទៅនឹងដំបូលផ្ទះ បន្ទាប់មកចូរឱ្យគេចងកសម្លាប់ខ្លួនឯង ហើយ

ثُمَّ لْيَقْطَعْ فَلْيَنظُرْ هَلْ يُذْهِبَنَّ كَيْدُهُۥ مَا يَغِيظُ ﴿١٥﴾

ចូរឱ្យគេមើលចុះ ថាតើឧបាយកលរបស់គេពិតជានឹងបំបាត់នូវអ្វីដែលគេខឹងសម្បាឬទេ? (គឺអល់ឡោះនៅតែជួយមូហាំម៉ាត់)។

وَكَذَٰلِكَ أَنزَلْنَٰهُ ءَايَٰتٍۭ بَيِّنَٰتٍ وَأَنَّ ٱللَّهَ يَهْدِى مَن يُرِيدُ ﴿١٦﴾

១៦-ហើយដូច្នេះដែរ យើងបានបញ្ចុះវា(គម្ពីរគួរអាន)ជាភស្តុតាង១យ៉ាងច្បាស់លាស់(ដើម្បីឱ្យមនុស្សលោកស្វែងយល់) ហើយពិតប្រាកដណាស់ អល់ឡោះនឹងចង្អុលបង្ហាញចំពោះអ្នកណាដែលទ្រង់មានបំណង។

إِنَّ ٱلَّذِينَ ءَامَنُوا۟ وَٱلَّذِينَ هَادُوا۟ وَٱلصَّٰبِـِٔينَ وَٱلنَّصَٰرَىٰ وَٱلْمَجُوسَ وَٱلَّذِينَ أَشْرَكُوٓا۟ إِنَّ ٱللَّهَ يَفْصِلُ بَيْنَهُمْ يَوْمَ ٱلْقِيَٰمَةِ ۚ إِنَّ ٱللَّهَ عَلَىٰ كُلِّ شَىْءٍ شَهِيدٌ ﴿١٧﴾

១៧-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿ និងពួកយ៉ាហ៊ូទី និងសពីអ៊ីន និងពួកណាសរ៉នី និងពួកម៉ាជូស៊ី[1] និងពួកមូស្ហរិគីន ពិតប្រាកដណាស់អល់ឡោះនឹងវិនិច្ឆ័យរវាងពួកគេនៅថ្ងៃបរលោក។ ពិតប្រាកដណាស់ អល់ឡោះគឺជាសាក្សីលើអ្វី១ទាំងអស់។

أَلَمْ تَرَ أَنَّ ٱللَّهَ يَسْجُدُ لَهُۥ مَن فِى ٱلسَّمَٰوَٰتِ وَمَن فِى ٱلْأَرْضِ وَٱلشَّمْسُ وَٱلْقَمَرُ وَٱلنُّجُومُ وَٱلْجِبَالُ وَٱلشَّجَرُ وَٱلدَّوَآبُّ وَكَثِيرٌ مِّنَ ٱلنَّاسِ ۖ وَكَثِيرٌ حَقَّ عَلَيْهِ ٱلْعَذَابُ ۗ وَمَن يُهِنِ ٱللَّهُ فَمَا لَهُۥ مِن مُّكْرِمٍ ۚ إِنَّ ٱللَّهَ يَفْعَلُ مَا يَشَآءُ ۩ ﴿١٨﴾

១៨-តើអ្នកមិនបានឃើញទេឬថា: ពិតប្រាកដណាស់ អល់ឡោះគឺត្រូវអ្នកដែលនៅលើមេឃជាច្រើនជាន់ និងផែនដី ព្រមទាំងព្រះអាទិត្យ និងព្រះច័ន្ទ និងហ្វូងផ្កាយ និងភ្នំ និងដើមឈើនានា និងសត្វធាតុទាំងអស់និងមនុស្សលោកភាគច្រើនស៊ូជូតចំពោះទ្រង់នោះ? ហើយ(មនុស្សលោក)ភាគច្រើន គឺត្រូវទទួលទារុណកម្ម។ ហើយអ្នកណាដែលត្រូវអល់ឡោះធ្វើឱ្យគេអាម៉ាស់មុខ គឺគ្មានអ្នកណាលើកតម្កើងគេឡើយ។ ពិតប្រាកដណាស់ អល់ឡោះធ្វើនូវអ្វីដែលទ្រង់មានចេតនា។

۞ هَٰذَانِ خَصْمَانِ ٱخْتَصَمُوا۟ فِى رَبِّهِمْ ۖ فَٱلَّذِينَ كَفَرُوا۟ قُطِّعَتْ لَهُمْ ثِيَابٌ مِّن نَّارٍ يُصَبُّ مِن فَوْقِ رُءُوسِهِمُ ٱلْحَمِيمُ ﴿١٩﴾

១៩-ក្រុមជម្លោះទាំងពីរ(អ្នកមានជំនឿ និងគ្មានជំនឿ)នេះបានឈ្លោះទាស់ទែងគ្នាក្នុងរឿងម្ចាស់របស់ពួកគេ។ ហើយពួកដែលគ្មានជំនឿ គឺត្រូវបានគេកាត់សំលៀកបំពាក់ពីភ្លើងនរកឱ្យពួកគេ រួចគេចាក់ទឹកពុះលើក្បាលពួកគេ។

يُصْهَرُ بِهِۦ مَا فِى بُطُونِهِمْ وَٱلْجُلُودُ ﴿٢٠﴾

២០-អ្វី១ដែលនៅក្នុងពោះរបស់ពួកគេ និងស្បែកគឺនឹងត្រូវរលាយដោយសារទឹកពុះនោះ។

---

១-ពួកម៉ាជូស៊ី: ពួកដែលសំពះភ្លើង។

وَلَهُم مَّقَٰمِعُ مِنۡ حَدِيدٖ ٢١

២១-ហើយរំពាត់ធ្វើអំពីដែកគឺសម្រាប់(ធ្វើទារុណកម្ម)ពួកគេ។

كُلَّمَآ أَرَادُوٓاْ أَن يَخۡرُجُواْ مِنۡهَا مِنۡ غَمٍّ أُعِيدُواْ فِيهَا وَذُوقُواْ عَذَابَ ٱلۡحَرِيقِ ٢٢

២២-រាល់ពេលដែលពួកគេព្យាយាមចង់ចាកចេញពីវា(ភ្លើងនរក)ដោយសារភាពឈឺចាប់នោះ ពួកគេត្រូវគេរុញត្រឡប់ទៅក្នុងវាវិញ។ ហើយ(មានគេនិយាយទៅកាន់ពួកគេថា) ចូរពួកអ្នកភ្លក្សនូវទារុណកម្មនៃភ្លើងឆាបឆេះនេះចុះ។

إِنَّ ٱللَّهَ يُدۡخِلُ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ يُحَلَّوۡنَ فِيهَا مِنۡ أَسَاوِرَ مِن ذَهَبٖ وَلُؤۡلُؤٗاۖ وَلِبَاسُهُمۡ فِيهَا حَرِيرٞ ٢٣

២៣-ពិតប្រាកដណាស់ អល់ឡោះនឹងបញ្ចូលបណ្ដាអ្នកដែលមានជំនឿនិងបានសាងអំពើល្អទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរកាត់ពីក្រោមវា ដោយគេតុបតែងលំអឱ្យពួកគេនៅក្នុងនោះជាមួយនឹងកងដៃកងជើងធ្វើពីមាសនិងគជ់ខ្យង។ ហើយសំលៀកបំពាក់របស់ពួកគេនៅក្នុងនោះគឺក្រណាត់សូត្រ។

وَهُدُوٓاْ إِلَى ٱلطَّيِّبِ مِنَ ٱلۡقَوۡلِ وَهُدُوٓاْ إِلَىٰ صِرَٰطِ ٱلۡحَمِيدِ ٢٤

២៤-ហើយពួកគេត្រូវបានគេចង្អុលបង្ហាញ(នៅក្នុងលោកិយ)ទៅរកពាក្យសំដីដែលល្អៗ(ឡាអ៊ីឡាហាអ៊ិលឡល់ឡោះ ការរំលឹកឈ្មោះអល់ឡោះ ការសូត្រគម្ពីរគួរអាន...)។ ហើយពួកគេត្រូវបានគេចង្អុលបង្ហាញទៅរកមាគ៌ារបស់ទ្រង់ដែលជាទីកោតសរសើរ(សាសនាអ៊ីស្លាម)។

إِنَّ ٱلَّذِينَ كَفَرُواْ وَيَصُدُّونَ عَن سَبِيلِ ٱللَّهِ وَٱلۡمَسۡجِدِ ٱلۡحَرَامِ ٱلَّذِي جَعَلۡنَٰهُ لِلنَّاسِ سَوَآءً ٱلۡعَٰكِفُ فِيهِ وَٱلۡبَادِۚ وَمَن يُرِدۡ فِيهِ بِإِلۡحَادِۢ بِظُلۡمٖ نُّذِقۡهُ مِنۡ عَذَابٍ أَلِيمٖ ٢٥

២៥-ពិតប្រាកដណាស់ ពួកដែលបានប្រឆាំង ហើយរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ និងម៉ាស្ជិទិលហារ៉ មដែលយើងបានបង្កើតវាសម្រាប់មនុស្សលោកទូទៅ(ក្នុងការគោរពសក្ការៈ) ទោះបីអ្នករស់នៅទីនោះ ឬអ្នកមកពីក្រៅ(ពួកគេនឹងទទួលទារុណកម្មដ៏សែនឈឺចាប់)។ ហើយអ្នកណាដែលមានបំណងប្រព្រឹត្តអំពើអាក្រក់ទាំងបំពាននៅទីនោះ យើងនឹងឱ្យគេភ្លក្សទារុណកម្មដ៏សែនឈឺចាប់ជាមិនខាន។

وَإِذۡ بَوَّأۡنَا لِإِبۡرَٰهِيمَ مَكَانَ ٱلۡبَيۡتِ أَن لَّا تُشۡرِكۡ بِي شَيۡـٔٗا وَطَهِّرۡ بَيۡتِيَ لِلطَّآئِفِينَ وَٱلۡقَآئِمِينَ وَٱلرُّكَّعِ ٱلسُّجُودِ ٢٦

២៦-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានបង្ហាញកន្លែងសាងសង់ផ្ទះ(កាក់ហ្ពះ)ដល់អ៊ីព្រហ៊ីម(យើងបានមានបន្ទូលថា)ចូរអ្នកកុំប្រព្រឹត្តអំពើស្ទីរិកមកចំពោះយើងឱ្យសោះ ហើយអ្នកត្រូវសំអាតផ្ទះរបស់យើងទុកសម្រាប់បណ្ដាអ្នកដែលតវ៉ាហ្វ និងបណ្ដាអ្នកដែលឈរ(ថ្វាយបង្គំ) ហើយនិងបណ្ដាអ្នកដែលរូកុ ស៊ូជូត។

وَأَذِّن فِى ٱلنَّاسِ بِٱلْحَجِّ يَأْتُوكَ رِجَالًا وَعَلَىٰ كُلِّ ضَامِرٍ يَأْتِينَ مِن كُلِّ فَجٍّ عَمِيقٍ ﴿٢٧﴾

២៧-ហើយចូរអ្នកប្រកាសអំពាវនាវដល់មនុស្សលោកអំពីការធ្វើហាជ្ជី ។ ពួកគេនឹងមកកាន់អ្នក( តាមការអំពាវនាវ) ដោយថ្មើរជើងនិងដោយជិះសត្វអូដ្ឋដែលពួកគេនឹងមកពីគ្រប់ច្រកល្ហកដ៏សែនឆ្ងាយ ។

لِّيَشْهَدُوا۟ مَنَـٰفِعَ لَهُمْ وَيَذْكُرُوا۟ ٱسْمَ ٱللَّهِ فِىٓ أَيَّامٍ مَّعْلُومَـٰتٍ عَلَىٰ مَا رَزَقَهُم مِّنۢ بَهِيمَةِ ٱلْأَنْعَـٰمِ ۖ فَكُلُوا۟ مِنْهَا وَأَطْعِمُوا۟ ٱلْبَآئِسَ ٱلْفَقِيرَ ﴿٢٨﴾

២៨-ដើម្បីពួកគេនឹងឃើញផលប្រយោជន៍សម្រាប់ពួកគេ( ផលបុណ្យហាជ្ជី និងផលចំណេញពីជំនួញ) ហើយពួកគេរំលឹកឈ្មោះរបស់អល់ឡោះក្នុងអំឡុងថ្ងៃដែលគេបានកំណត់( ថ្ងៃទីដប់ ដប់មួយ ដប់ពីរ ដប់បី នៃខែហ៊ីជ្ជះ) ចំពោះអ្វីដែលទ្រង់បានប្រទានលាភសក្ការៈដល់ពួកគេអំពីសត្វពាហនៈ ។ ដូច្នេះ ចូរពួកអ្នកបរិភោគអំពីវា និងបរិច្ចាគឱ្យអ្នកក្រលំបាក ។

ثُمَّ لْيَقْضُوا۟ تَفَثَهُمْ وَلْيُوفُوا۟ نُذُورَهُمْ وَلْيَطَّوَّفُوا۟ بِٱلْبَيْتِ ٱلْعَتِيقِ ﴿٢٩﴾

២៩-បន្ទាប់មកចូរឱ្យពួកគេបំពេញករណីយកិច្ចរបស់ពួកគេឱ្យបានចប់សព្វគ្រប់ ហើយចូរឱ្យពួកគេបំពេញនូវការសច្ចាររបស់ពួកគេ( សច្ចានឹងសំឡេះសត្វ នៅរដូវហាជ្ជី និងក្នុងកាតព្វកិច្ចផ្សេងៗទៀត) និងឱ្យពួកគេតវ៉ាហ្វជុំវិញកាក់ហ្ពះចុះ ។

ذَٰلِكَ وَمَن يُعَظِّمْ حُرُمَـٰتِ ٱللَّهِ فَهُوَ خَيْرٌ لَّهُۥ عِندَ رَبِّهِۦ ۗ وَأُحِلَّتْ لَكُمُ ٱلْأَنْعَـٰمُ إِلَّا مَا يُتْلَىٰ عَلَيْكُمْ ۖ فَٱجْتَنِبُوا۟ ٱلرِّجْسَ مِنَ ٱلْأَوْثَـٰنِ وَٱجْتَنِبُوا۟ قَوْلَ ٱلزُّورِ ﴿٣٠﴾

៣០-នោះគឺជា( បទបញ្ជារបស់អល់ឡោះ) ។ អ្នកណាហើយដែលលើកតម្កើងនូវបទបញ្ញត្តិរបស់អល់ឡោះ គឺជាការប្រសើរសម្រាប់គេចំពោះម្ចាស់របស់គេ ។ ហើយសត្វពាហនៈគ្រប់ប្រភេទត្រូវបានគេអនុញ្ញាតឱ្យពួកអ្នក លើកលែងតែអ្វីដែលត្រូវគេសូត្រ( ហាមឃាត់) ចំពោះពួកអ្នកប៉ុណ្ណោះ ។ ដូច្នេះ ចូរពួកអ្នកចៀសវាងពីប្រការកខ្វក់អំពី( ការគោរព) រូបសំណាកនានា និងត្រូវចៀសវាងពីការនិយាយកុហក ។

حُنَفَآءَ لِلَّهِ غَيْرَ مُشْرِكِينَ بِهِۦ ۚ وَمَن يُشْرِكْ بِٱللَّهِ فَكَأَنَّمَا خَرَّ مِنَ ٱلسَّمَآءِ فَتَخْطَفُهُ ٱلطَّيْرُ أَوْ تَهْوِى بِهِ ٱلرِّيحُ فِى مَكَانٍ سَحِيقٍ ﴿٣١﴾

៣១-ដោយពួកគេស្មោះត្រង់ចំពោះអល់ឡោះតែមួយគត់មិនមែនជាពួកស្ហ៊ីរិកនឹងទ្រង់ឡើយ ។ ហើយអ្នកណាដែលធ្វើស្ហ៊ីរិកនឹងអល់ឡោះនោះ គឺហាក់បីដូចជាគេបានធ្លាក់ពីលើមេឃ ហើយត្រូវសត្វស្លាប( សាហាវ) មួយបានឆក់យកគេ ឬក៏ត្រូវខ្យល់ព្យុះបក់ក្លួចយកគេទៅធ្លាក់កន្លែងមួយដ៏ឆ្ងាយ ។

ذَٰلِكَ وَمَن يُعَظِّمْ شَعَـٰٓئِرَ ٱللَّهِ فَإِنَّهَا مِن

៣២-នោះគឺជា( បទបញ្ជារបស់អល់ឡោះ) ។ ហើយអ្នកណាដែលបានលើកតម្កើងនិមិត្តសញ្ញានានារបស់អល់ឡោះ គឺពិតប្រាកដ

تَقۡوَى ٱلۡقُلُوبِ ٣٢

ណាស់ វាបញ្ជាក់ពីទឹកចិត្តដែលកោតខ្លាចអល់ឡោះ ។

لَكُمۡ فِيهَا مَنَٰفِعُ إِلَىٰٓ أَجَلٖ مُّسَمّٗى ثُمَّ مَحِلُّهَآ إِلَى ٱلۡبَيۡتِ ٱلۡعَتِيقِ ٣٣

៣៣-ចំពោះវាគឺមានប្រយោជន៍ជាច្រើនសម្រាប់ពួកអ្នក( ជិះ ឬច្របាច់យកទឹកដោះ) រហូតដល់ពេលកំណត់( ត្រូវសំឡេះ) ។ បន្ទាប់មកកន្លែងដែលត្រូវសំឡេះនោះគឺនៅទឹកដីអាល់ហារ៉ម ។

وَلِكُلِّ أُمَّةٖ جَعَلۡنَا مَنسَكٗا لِّيَذۡكُرُواْ ٱسۡمَ ٱللَّهِ عَلَىٰ مَا رَزَقَهُم مِّنۢ بَهِيمَةِ ٱلۡأَنۡعَٰمِۗ فَإِلَٰهُكُمۡ إِلَٰهٞ وَٰحِدٞ فَلَهُۥٓ أَسۡلِمُواْۗ وَبَشِّرِ ٱلۡمُخۡبِتِينَ ٣٤

៣៤-ហើយរាល់ប្រជាជាតិគ្រប់ជំនាន់ យើងបានកំណត់ឱ្យមានពិធីសំឡេះសត្វ ដើម្បីឱ្យពួកគេរំលឹកឈ្មោះរបស់អល់ឡោះ( សូត្រ بِسْمِ اللهِ ) ទៅលើអ្វីដែលទ្រង់បានប្រទានលាភសក្ការៈដល់ពួកគេអំពីសត្វពាហនៈទាំងឡាយ ។ ដូច្នេះម្ចាស់របស់ពួកអ្នកគឺជាម្ចាស់តែមួយគត់ ហើយចូរពួកអ្នកប្រគល់ខ្លួនទៅចំពោះទ្រង់ ។ ហើយចូរអ្នក( មូហាំម៉ាត់) ផ្ដល់ដំណឹងរីករាយដល់បណ្ដាអ្នកដែលគោរពប្រតិបត្តិ( តាមបទបញ្ញត្តិរបស់ទ្រង់) ។

ٱلَّذِينَ إِذَا ذُكِرَ ٱللَّهُ وَجِلَتۡ قُلُوبُهُمۡ وَٱلصَّٰبِرِينَ عَلَىٰ مَآ أَصَابَهُمۡ وَٱلۡمُقِيمِي ٱلصَّلَوٰةِ وَمِمَّا رَزَقۡنَٰهُمۡ يُنفِقُونَ ٣٥

៣៥-គឺបណ្ដាអ្នកដែលចិត្តរបស់ពួកគេភ័យរន្ធត់នៅពេលដែលមានគេរំលឹកពីអល់ឡោះ ហើយពួកគេអត់ធ្មត់ចំពោះអ្វីដែលបានកើតឡើងទៅលើពួកគេ( គ្រោះថ្នាក់ ភាពក្រីក្រ ឈឺថ្កាត់...) ហើយពួកគេប្រតិបត្តិសឡាត និងបរិច្ចាគមួយចំនួននូវអ្វីដែលយើងបានប្រទានលាភសក្ការៈដល់ពួកគេ ។

وَٱلۡبُدۡنَ جَعَلۡنَٰهَا لَكُم مِّن شَعَٰٓئِرِ ٱللَّهِ لَكُمۡ فِيهَا خَيۡرٞۖ فَٱذۡكُرُواْ ٱسۡمَ ٱللَّهِ عَلَيۡهَا صَوَآفَّۖ فَإِذَا وَجَبَتۡ جُنُوبُهَا فَكُلُواْ مِنۡهَا وَأَطۡعِمُواْ ٱلۡقَانِعَ وَٱلۡمُعۡتَرَّۚ كَذَٰلِكَ سَخَّرۡنَٰهَا لَكُمۡ لَعَلَّكُمۡ تَشۡكُرُونَ ٣٦

៣៦-ហើយសត្វអូដ្ឋ យើងបានបង្កើតវាជានិមិត្តសញ្ញាមួយនៃនិមិត្តសញ្ញាជាច្រើនរបស់អល់ឡោះសម្រាប់ពួកអ្នកដោយសត្វនោះមានប្រយោជន៍បំផុតសម្រាប់ពួកអ្នក[1] ។ ដូច្នេះ ចូរពួកអ្នករំលឹកឈ្មោះរបស់អល់ឡោះទៅលើវា( នៅពេលសំឡេះសត្វអូដ្ឋ) ខណៈដែលវាឈរ ។ ហើយនៅពេលដែលខ្លួនរបស់វាបានដួល( ស្លាប់) ហើយនោះ ចូរពួកអ្នកទទួលទានមួយចំនួនអំពីវា ហើយត្រូវចែកចាយដល់អ្នកក្រដែលមិនហ៊ានសុំ និងអ្នកក្រដែលដាច់ចិត្តសុំ ។ ដូច្នោះហើយ យើងបានបង្កើតវាជាប្រយោជន៍សម្រាប់ពួកអ្នក សង្ឃឹមថាពួកអ្នកនឹងដឹងគុណ( មកចំពោះយើង) ។

لَن يَنَالَ ٱللَّهَ لُحُومُهَا وَلَا دِمَآؤُهَا وَلَٰكِن

៣៧-សាច់របស់វា និងឈាមរបស់វាទាំងអស់មិនអាចទៅដល់

១-បរិភោគសាច់ជួបជុំមិត្តភក្តិ ញាតិសន្ដាន ចែកចាយដល់អ្នកក្រីក្រដែលនិងត្រូវទទួលការតបស្នងវិញនៅថ្ងៃបរលោក ។

يَنَالُهُ ٱلتَّقْوَىٰ مِنكُمْ ۚ كَذَٰلِكَ سَخَّرَهَا
لَكُمْ لِتُكَبِّرُوا۟ ٱللَّهَ عَلَىٰ مَا هَدَىٰكُمْ ۗ وَبَشِّرِ
ٱلْمُحْسِنِينَ ﴿٣٧﴾

អល់ឡោះឡើយ ក៏ប៉ុន្តែការកោតខ្លាច(អល់ឡោះ) អំពីពួកអ្នកទេដែលអាចទៅដល់ទ្រង់នោះ។ ដូច្នោះដែរ ទ្រង់បានបង្កើតវាជាប្រយោជន៍សម្រាប់ពួកអ្នក ដើម្បីឱ្យពួកអ្នកលើកតម្កើងអល់ឡោះទៅលើអ្វីដែលទ្រង់បានចង្អុលបង្ហាញដល់ពួកអ្នក។ ហើយចូរអ្នក(មូហាំម៉ាត់)ផ្តល់ដំណឹងរីករាយដល់បណ្តាអ្នកដែលសាងអំពើល្អ។

۞ إِنَّ ٱللَّهَ يُدَٰفِعُ عَنِ ٱلَّذِينَ ءَامَنُوٓا۟ ۗ إِنَّ ٱللَّهَ
لَا يُحِبُّ كُلَّ خَوَّانٍ كَفُورٍ ﴿٣٨﴾

៣៨-ពិតប្រាកដណាស់ អល់ឡោះនឹងការពារបណ្តាអ្នកដែលមានជំនឿ(ពីឧបាយកលរបស់ពួកដែលគ្មានជំនឿ)។ ពិតប្រាកដណាស់ អល់ឡោះមិនស្រឡាញ់រាល់អ្នកដែលក្បត់រមិលគុណឡើយ។

أُذِنَ لِلَّذِينَ يُقَٰتَلُونَ بِأَنَّهُمْ ظُلِمُوا۟ ۚ وَإِنَّ
ٱللَّهَ عَلَىٰ نَصْرِهِمْ لَقَدِيرٌ ﴿٣٩﴾

៣៩-(ឥឡូវនេះ)គេបានអនុញ្ញាត(ឱ្យធ្វើសង្គ្រាម)ឱ្យបណ្តាអ្នក(ដែលមានជំនឿ)ដែលត្រូវគេធ្វើសង្គ្រាមមកលើ ដោយសារតែពួកគេត្រូវបានគេបំពាន។ ហើយពិតប្រាកដណាស់ អល់ឡោះមានអានុភាពជួយដល់ពួកគេ។

ٱلَّذِينَ أُخْرِجُوا۟ مِن دِيَٰرِهِم بِغَيْرِ حَقٍّ إِلَّآ
أَن يَقُولُوا۟ رَبُّنَا ٱللَّهُ ۗ وَلَوْلَا دَفْعُ ٱللَّهِ
ٱلنَّاسَ بَعْضَهُم بِبَعْضٍ لَّهُدِّمَتْ صَوَٰمِعُ وَبِيَعٌ
وَصَلَوَٰتٌ وَمَسَٰجِدُ يُذْكَرُ فِيهَا ٱسْمُ ٱللَّهِ
كَثِيرًا ۗ وَلَيَنصُرَنَّ ٱللَّهُ مَن يَنصُرُهُۥٓ ۗ إِنَّ
ٱللَّهَ لَقَوِىٌّ عَزِيزٌ ﴿٤٠﴾

៤០-គឺបណ្តាអ្នកដែលត្រូវបានគេបណ្តេញចេញពីលំនៅដ្ឋានរបស់ពួកគេ ដោយគ្មានកំហុសអ្វីក្រៅពីពួកគេនិយាយថា: ម្ចាស់របស់ពួកយើងគឺអល់ឡោះនោះឡើយ។ ហើយប្រសិនបើគ្មានការទប់ស្កាត់របស់អល់ឡោះចំពោះមនុស្សលោកពីក្រុមមួយទៅក្រុមមួយទេនោះ ប្រាកដជាអាស្រមរបស់ឥសីនិងវិហារ(របស់ណាសរ៉នី) និងទីបូជា(របស់យ៉ាហ៊ូទី) ហើយនិងបណ្តាវិហារអ៊ិស្លាមដែលគេកំពុងរំលឹកឈ្មោះរបស់អល់ឡោះជាច្រើននៅក្នុងនោះនឹងត្រូវគេបំផ្លាញខ្ទេចខ្ទីអស់ជាមិនខាន។ ហើយអល់ឡោះពិតជានឹងជួយអ្នកណាដែលជួយទ្រង់(ក្នុងការផ្សព្វផ្សាយសាសនា)។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងក្លា មហាខ្លាំងពូកែ។

ٱلَّذِينَ إِن مَّكَّنَّٰهُمْ فِى ٱلْأَرْضِ أَقَامُوا۟ ٱلصَّلَوٰةَ
وَءَاتَوُا۟ ٱلزَّكَوٰةَ وَأَمَرُوا۟ بِٱلْمَعْرُوفِ وَنَهَوْا۟
عَنِ ٱلْمُنكَرِ ۗ وَلِلَّهِ عَٰقِبَةُ ٱلْأُمُورِ ﴿٤١﴾

៤១-គឺបណ្តាអ្នក(ដែលយើងបានសន្យាថាជួយពួកគេ) ប្រសិនបើយើងបានផ្តល់សិទ្ធិអំណាចឱ្យពួកគេនៅលើផែនដីនេះ ពួកគេបានប្រតិបត្តិសឡាត និងបានបរិច្ចាគហ្សាកាត់ ព្រមទាំងបានប្រើគ្នាឱ្យធ្វើប្រការល្អ និងបានហាមឃាត់គ្នាអំពីប្រការអាក្រក់ ហើយលទ្ធផលចុងក្រោយនៃកិច្ចការទាំងអស់គឺវិលត្រឡប់ទៅរកអល់ឡោះវិញ។

៤២-តែប្រសិនបើពួកគេបដិសេធនឹងអ្នក(មូហាំម៉ាត់)វិញនោះ ជាការពិតណាស់ ក្រុមរបស់នួហ និងក្រុមអាដ ហើយនិងក្រុមសាមូដក៏បានបដិសេធមុនពួកគេដែរ ។

وَإِن يُكَذِّبُوكَ فَقَدْ كَذَّبَتْ قَبْلَهُمْ قَوْمُ نُوحٍ وَعَادٌ وَثَمُودُ ﴿٤٢﴾

៤៣-ហើយក្រុមអ៊ីព្រហ៊ីម និងក្រុមលូត(ក៏បានបដិសេធដែរ) ។

وَقَوْمُ إِبْرَٰهِيمَ وَقَوْمُ لُوطٍ ﴿٤٣﴾

៤៤-ព្រមទាំងអ្នកស្រុករបស់ម៉ាទយ៉ាន់ផងដែរ ។ ហើយមូសាក៏ត្រូវបានគេបដិសេធ(មិនទទួលយកការដាស់តឿនពីគេដែរ)យើងក៏បានពន្យារពេលឱ្យពួកដែលប្រឆាំងមួយរយៈ បន្ទាប់មកយើងបានធ្វើទារុណកម្មពួកគេ ។ តើការបំផ្លាញរបស់យើង(ចំពោះពួកគេ) យ៉ាងដូចម្ដេចដែរ?

وَأَصْحَٰبُ مَدْيَنَ ۖ وَكُذِّبَ مُوسَىٰ فَأَمْلَيْتُ لِلْكَٰفِرِينَ ثُمَّ أَخَذْتُهُمْ ۖ فَكَيْفَ كَانَ نَكِيرِ ﴿٤٤﴾

៤៥-ហើយភូមិស្រុកជាច្រើនមកហើយដែលយើងបានបំផ្លាញវា ខណៈដែលវា(អ្នកភូមិស្រុក)ជាអ្នកដែលបំពាន ដូច្នេះវាក៏បាក់ខ្ទេចខ្ទីអស់(មនុស្សនិងលំនៅដ្ឋាន) ហើយអណ្ដូងទឹកត្រូវបោះបង់ចោល ហើយវិមានដ៏ស្កឹមស្កៃក៏ត្រូវវិនាសដែរ ។

فَكَأَيِّن مِّن قَرْيَةٍ أَهْلَكْنَٰهَا وَهِىَ ظَالِمَةٌ فَهِىَ خَاوِيَةٌ عَلَىٰ عُرُوشِهَا وَبِئْرٍ مُّعَطَّلَةٍ وَقَصْرٍ مَّشِيدٍ ﴿٤٥﴾

៤៦-ដូច្នេះ តើពួកគេ(ពួកប្រឆាំងនឹងមូហាំម៉ាត់) មិនបានធ្វើដំណើរនៅលើផែនដីនេះ ហើយពួកគេមិនមានចិត្តគិតពិចារណាលើវា ឬមិនយកត្រចៀកស្ដាប់វាទេឬ? ហើយពិតប្រាកដណាស់ រឿងរ៉ាវនោះភ្នែក(របស់ពួកគេ) មិនងងឹតទេ តែចិត្តដែលនៅក្នុងទ្រូងទេដែលងងឹតនោះ ។

أَفَلَمْ يَسِيرُوا۟ فِى ٱلْأَرْضِ فَتَكُونَ لَهُمْ قُلُوبٌ يَعْقِلُونَ بِهَآ أَوْ ءَاذَانٌ يَسْمَعُونَ بِهَا ۖ فَإِنَّهَا لَا تَعْمَى ٱلْأَبْصَٰرُ وَلَٰكِن تَعْمَى ٱلْقُلُوبُ ٱلَّتِى فِى ٱلصُّدُورِ ﴿٤٦﴾

៤៧-ហើយពួកគេសុំអ្នក(មូហាំម៉ាត់)ឱ្យផ្ដល់នូវទារុណកម្មភ្លាមៗ ហើយអល់ឡោះមិនធ្វើខុសសន្យារបស់ទ្រង់ឡើយ ។ ហើយពិតប្រាកដណាស់ មួយថ្ងៃសម្រាប់ម្ចាស់របស់អ្នក(ថ្ងៃបរលោក) គឺដូចជាមួយពាន់ឆ្នាំតាមអ្វីដែលពួកអ្នករាប់(ក្នុងលោកិយនេះ) ។

وَيَسْتَعْجِلُونَكَ بِٱلْعَذَابِ وَلَن يُخْلِفَ ٱللَّهُ وَعْدَهُۥ ۚ وَإِنَّ يَوْمًا عِندَ رَبِّكَ كَأَلْفِ سَنَةٍ مِّمَّا تَعُدُّونَ ﴿٤٧﴾

៤៨-ហើយមានភូមិស្រុកជាច្រើនដែលយើងបានពន្យារពេលឱ្យវា(ក្នុងការធ្វើទារុណកម្ម) ខណៈដែលវា(អ្នកភូមិស្រុក)ជាអ្នកដែលបំពាន ។ បន្ទាប់មកយើងបានធ្វើទារុណកម្មវា ។ ហើយចំពោះយើងតែមួយគត់ដែលជាកន្លែងវិលត្រឡប់ ។

وَكَأَيِّن مِّن قَرْيَةٍ أَمْلَيْتُ لَهَا وَهِىَ ظَالِمَةٌ ثُمَّ أَخَذْتُهَا وَإِلَىَّ ٱلْمَصِيرُ ﴿٤٨﴾

៤៩-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ឱមនុស្សលោក! តាមពិត

قُلْ يَٰٓأَيُّهَا ٱلنَّاسُ إِنَّمَآ أَنَا۠ لَكُمْ نَذِيرٌ

ខ្ញុំគ្រាន់តែជាអ្នកដាស់តឿនព្រមានដ៏ច្បាស់លាស់សម្រាប់ពួកអ្នកប៉ុណ្ណោះ។

៥០-ដូច្នេះ បណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ ពួកគេនឹងទទួលបានការអភ័យទោស និងលាភសក្ការៈដ៏ប្រពៃ (នៅថ្ងៃបរលោក)។

៥១-ហើយពួកដែលបានព្យាយាមប្រឆាំងនឹងភស្តុតាងៗរបស់យើងដោយពួកគេប្រជែងចង់ឈ្នះនោះ ពួកទាំងនោះគឺជាពួកនរកជើហ៊ីម។

៥២-ហើយគ្រប់អ្នកនាំសារ និងណាពីដែលយើងបានបញ្ជូនមកមុនអ្នក ស្ហៃតនតែងតែឆាឆៅក្នុងការសូត្ររបស់គេនៅពេលដែលគេសូត្រ(អាយ៉ាត់របស់យើង)។ តែអល់ឡោះលុបបំបាត់នូវអ្វីដែលស្ហៃតនបានឆាឆៅនោះ។ បន្ទាប់មកអល់ឡោះពង្រឹងអាយ៉ាត់ៗរបស់ទ្រង់វិញ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

៥៣-ដើម្បីទ្រង់នឹងធ្វើនូវអ្វីដែលស្ហៃតនឆាឆៅជាការសាកល្បងមួយសម្រាប់ពួកដែលមានជំងឺផ្លូវចិត្ត និងសម្រាប់ពួកដែលមានចិត្តរឹងរូស។ ហើយពិតប្រាកដណាស់ ពួកដែលបំពានគឺស្ថិតក្នុងភាពវង្វេងដ៏សែនឆ្ងាយ។

៥៤-និងដើម្បីឱ្យបណ្ដាអ្នកដែលត្រូវបានគេផ្ដល់ចំណេះវិជ្ជាដឹងច្បាស់ថា ពិតប្រាកដណាស់វាជាការពិតដែលមកពីម្ចាស់របស់អ្នកនិងដើម្បីឱ្យពួកគេមានជំនឿនឹងវា ហើយនិងដើម្បីឱ្យចិត្តរបស់ពួកគេនឹងនរចំពោះវា។ ហើយពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកចង្អុលបង្ហាញដល់បណ្ដាអ្នកដែលមានជំនឿទៅកាន់មាគ៌ាដ៏ត្រឹមត្រូវ។

៥៥-ហើយពួកដែលគ្មានជំនឿនៅតែមានការសង្ស័យអំពីវា (គម្ពីរគួរអាន) រហូតទាល់តែថ្ងៃបរលោកមកដល់ពួកគេភ្លាមៗ ឬទារុណកម្មនៃថ្ងៃបរលោកមកដល់ពួកគេ។

៥៦-សិទ្ធិអំណាចនៅថ្ងៃនោះជាកម្មសិទ្ធិរបស់អល់ឡោះតែមួយ

مُّبِينٌ ﴿٤٩﴾

فَٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ لَهُم
مَّغْفِرَةٌ وَرِزْقٌ كَرِيمٌ ﴿٥٠﴾

وَٱلَّذِينَ سَعَوْاْ فِيٓ ءَايَٰتِنَا مُعَٰجِزِينَ أُوْلَٰٓئِكَ
أَصْحَٰبُ ٱلْجَحِيمِ ﴿٥١﴾

وَمَآ أَرْسَلْنَا مِن قَبْلِكَ مِن رَّسُولٍ وَلَا نَبِيٍّ إِلَّآ
إِذَا تَمَنَّىٰٓ أَلْقَى ٱلشَّيْطَٰنُ فِيٓ أُمْنِيَّتِهِۦ فَيَنسَخُ
ٱللَّهُ مَا يُلْقِي ٱلشَّيْطَٰنُ ثُمَّ يُحْكِمُ ٱللَّهُ
ءَايَٰتِهِۦۗ وَٱللَّهُ عَلِيمٌ حَكِيمٌ ﴿٥٢﴾

لِّيَجْعَلَ مَا يُلْقِي ٱلشَّيْطَٰنُ فِتْنَةً لِّلَّذِينَ فِي
قُلُوبِهِم مَّرَضٌ وَٱلْقَاسِيَةِ قُلُوبُهُمْۗ وَإِنَّ
ٱلظَّٰلِمِينَ لَفِي شِقَاقٍ بَعِيدٍ ﴿٥٣﴾

وَلِيَعْلَمَ ٱلَّذِينَ أُوتُواْ ٱلْعِلْمَ أَنَّهُ ٱلْحَقُّ مِن
رَّبِّكَ فَيُؤْمِنُواْ بِهِۦ فَتُخْبِتَ لَهُۥ قُلُوبُهُمْۗ وَإِنَّ
ٱللَّهَ لَهَادِ ٱلَّذِينَ ءَامَنُوٓاْ إِلَىٰ صِرَٰطٍ
مُّسْتَقِيمٍ ﴿٥٤﴾

وَلَا يَزَالُ ٱلَّذِينَ كَفَرُواْ فِي مِرْيَةٍ مِّنْهُ
حَتَّىٰ تَأْتِيَهُمُ ٱلسَّاعَةُ بَغْتَةً أَوْ يَأْتِيَهُمْ
عَذَابُ يَوْمٍ عَقِيمٍ ﴿٥٥﴾

ٱلْمُلْكُ يَوْمَئِذٍ لِّلَّهِ يَحْكُمُ بَيْنَهُمْۚ

فَٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ
فِي جَنَّٰتِ ٱلنَّعِيمِ ﴿٥٦﴾

គត់ ដែលទ្រង់នឹងកាត់សេចក្ដីរវាងពួកគេ( អ្នកមានជំនឿនិងគ្មាន
ជំនឿ) ។ ហើយបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អគឺ
ស្ថិតក្នុងឋានសួគ៌ណាអ៊ីម ។

وَٱلَّذِينَ كَفَرُواْ وَكَذَّبُواْ بِـَٔايَٰتِنَا فَأُوْلَٰٓئِكَ
لَهُمۡ عَذَابٞ مُّهِينٞ ﴿٥٧﴾

៥៧-រីឯពួកដែលគ្មានជំនឿ និងបានបដិសេធនឹងអាយ៉ាត់ៗរបស់
យើងវិញ ពួកទាំងនោះនឹងទទួលទារុណកម្មយ៉ាងអាម៉ាស់ ។

وَٱلَّذِينَ هَاجَرُواْ فِي سَبِيلِ ٱللَّهِ ثُمَّ قُتِلُوٓاْ أَوۡ
مَاتُواْ لَيَرۡزُقَنَّهُمُ ٱللَّهُ رِزۡقًا حَسَنٗاۚ وَإِنَّ ٱللَّهَ
لَهُوَ خَيۡرُ ٱلرَّٰزِقِينَ ﴿٥٨﴾

៥៨-ហើយបណ្ដាអ្នកដែលភៀសខ្លួនក្នុងមាគ៌ារបស់អល់ឡោះ
បន្ទាប់មកពួកគេត្រូវបានគេសម្លាប់ ឬក៏ពួកគេបានស្លាប់( ដោយ
ប្រការណាមួយ) នោះ អល់ឡោះពិតជានឹងផ្ដល់ឱ្យពួកគេនូវលាភ
សក្ការៈមួយដ៏ប្រសើរ( ឋានសួគ៌) ។ ហើយពិតប្រាកដណាស់
អល់ឡោះ ទ្រង់គឺជាអ្នកផ្ដល់លាភសក្ការៈដ៏ប្រសើរបំផុត ។

لَيُدۡخِلَنَّهُم مُّدۡخَلٗا يَرۡضَوۡنَهُۥۗ وَإِنَّ ٱللَّهَ لَعَلِيمٌ
حَلِيمٞ ﴿٥٩﴾

៥៩-ទ្រង់ពិតជានឹងបញ្ចូលពួកគេទៅតាមច្រកចូលដែលពួកគេ
ពេញចិត្តវា( ឋានសួគ៌) ។ ហើយពិតប្រាកដណាស់ អល់ឡោះមហា
ដឹង មហាអត់ធ្មត់ ។

۞ذَٰلِكَۖ وَمَنۡ عَاقَبَ بِمِثۡلِ مَا عُوقِبَ بِهِۦ
ثُمَّ بُغِيَ عَلَيۡهِ لَيَنصُرَنَّهُ ٱللَّهُۚ إِنَّ ٱللَّهَ لَعَفُوٌّ
غَفُورٞ ﴿٦٠﴾

៦០- គឺវាដូច្នោះហើយ ។ ហើយអ្នកណាដែលបានសងសឹកដូច
អ្វីដែលត្រូវបានគេធ្វើបាប បន្ទាប់មកអ្នកនោះ ត្រូវបានគេធ្វើបាប
ទៀតនោះ អល់ឡោះពិតជានឹងជួយគេ ។ ពិតប្រាកដណាស់
អល់ឡោះមហា អធ្យាស្រ័យ មហាអភ័យទោស ។

ذَٰلِكَ بِأَنَّ ٱللَّهَ يُولِجُ ٱلَّيۡلَ فِي ٱلنَّهَارِ
وَيُولِجُ ٱلنَّهَارَ فِي ٱلَّيۡلِ وَأَنَّ ٱللَّهَ سَمِيعُۢ
بَصِيرٞ ﴿٦١﴾

៦១-នោះគឺព្រោះតែអល់ឡោះ( មានសមត្ថភាព) បញ្ចូលពេល
យប់ទៅក្នុងពេលថ្ងៃ និងបញ្ចូលពេលថ្ងៃទៅក្នុងពេលយប់វិញ ។
ហើយពិតប្រាកដណាស់ អល់ឡោះ មហាឮ មហាឃើញ ។

ذَٰلِكَ بِأَنَّ ٱللَّهَ هُوَ ٱلۡحَقُّ وَأَنَّ
مَا يَدۡعُونَ مِن دُونِهِۦ هُوَ ٱلۡبَٰطِلُ وَأَنَّ
ٱللَّهَ هُوَ ٱلۡعَلِيُّ ٱلۡكَبِيرُ ﴿٦٢﴾

៦២-នោះគឺព្រោះតែអល់ឡោះជាម្ចាស់ដ៏ពិតប្រាកដ ។ ហើយពិត
ប្រាកដណាស់ អ្វីដែលពួកគេបួងសួងសុំផ្សេងពីទ្រង់ វាគឺជាប្រការ
មោឃៈ ។ ហើយពិតប្រាកដណាស់អល់ឡោះ ទ្រង់មហាខ្ពង់ខ្ពស់
មហាឧត្ដុង្គឧត្ដម ។

أَلَمۡ تَرَ أَنَّ ٱللَّهَ أَنزَلَ مِنَ ٱلسَّمَآءِ مَآءٗ
فَتُصۡبِحُ ٱلۡأَرۡضُ مُخۡضَرَّةًۚ إِنَّ ٱللَّهَ لَطِيفٌ

៦៣-តើអ្នក( មូហាំម៉ាត់) មិនបានឃើញទេថាៈ ពិតប្រាកដណាស់
អល់ឡោះបានបញ្ចុះទឹកភ្លៀងពីលើមេឃ រួចដីក៏ក្លាយទៅជាបៃតង

នោះ? ពិតប្រាកដណាស់ អល់ឡោះមហាទន់ភ្លន់ មហាដឹង។

៦៤-អ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងផែនដីគឺជាកម្មសិទ្ធិរបស់ទ្រង់។ ហើយពិតប្រាកដណាស់ អល់ឡោះ ទ្រង់មហាមានលើសលប់ ជាទីកោតសរសើរបំផុត។

៦៥-តើអ្នកមិនបានឃើញទេថា: ពិតប្រាកដណាស់ អល់ឡោះបានបង្កើតអ្វីដែលមាននៅលើផែនដី និង(បានបង្កើត)ឱ្យមានសំពៅដើម្បីធ្វើដំណើរតាមសមុទ្រតាមបទបញ្ជារបស់ទ្រង់ជាប្រយោជន៍សម្រាប់ពួកអ្នក។ ហើយទ្រង់ទប់មេឃដើម្បីកុំឱ្យវាបាក់ធ្លាក់មកលើផែនដី លើកលែងតែមានការអនុញ្ញាតពីទ្រង់នោះ? ពិតប្រាកដណាស់ អល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ចំពោះមនុស្សលោក។

៦៦-ហើយទ្រង់គឺជាអ្នកដែលបានធ្វើឱ្យពួកអ្នករស់ បន្ទាប់មកទ្រង់ធ្វើឱ្យពួកអ្នកស្លាប់ បន្ទាប់មកទៀតទ្រង់ធ្វើឱ្យពួកអ្នករស់ឡើងវិញ។ ប្រាកដណាស់ មនុស្សលោកពិតជាអ្នកដែលប្រឆាំងបំផុត។

៦៧-រាល់ប្រជាជាតិគ្រប់ជំនាន់ យើងបានកំណត់ឱ្យមានច្បាប់(ក្នុងការគោរពសក្ការៈ) ដែលពួកគេជាអ្នកដែលអនុវត្តវា។ ដូច្នេះចូរកុំឱ្យពួកគេខ្វែងគំនិតនឹងអ្នកក្នុងកិច្ចការនេះឱ្យសោះ។ ហើយចូរអ្នកអំពាវនាវ(មនុស្សលោក)ទៅកាន់ម្ចាស់របស់អ្នក។ ពិតប្រាកដណាស់ អ្នកពិតជាស្ថិតនៅលើមាគ៌ាដ៏ត្រឹមត្រូវ។

៦៨-ហើយប្រសិនបើពួកគេ(ពួកមូស្ហរីគីន)បានឈ្លោះប្រកែកជាមួយអ្នក(ពីការសំឡេះសត្វ) ចូរអ្នកពោលថា: អល់ឡោះដឹងបំផុតនូវអ្វីដែលពួកអ្នកកំពុងធ្វើ។

៦៩-អល់ឡោះនឹងកាត់សេចក្តីរវាងពួកអ្នក(អ្នកមានជំនឿនិងអ្នកគ្មានជំនឿ)នៅថ្ងៃបរលោកចំពោះអ្វីដែលពួកអ្នកធ្លាប់បានខ្វែងគំនិតគ្នា។

៧០-តើអ្នកមិនបានដឹងទេថា : ពិតប្រាកដណាស់ អល់ឡោះដឹងនូវអ្វីដែលមាននៅលើមេឃនិងផែនដីនោះ? ពិតប្រាកដណាស់ រឿងនោះគឺមាននៅក្នុងគម្ពីរឡោវហុលម៉ះហ្វ៊ូស។ ពិតប្រាកដណាស់ រឿង

خَبِيرٌ ٦٣
لَّهُۥ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۗ
وَإِنَّ ٱللَّهَ لَهُوَ ٱلۡغَنِيُّ ٱلۡحَمِيدُ ٦٤
أَلَمۡ تَرَ أَنَّ ٱللَّهَ سَخَّرَ لَكُم مَّا فِي ٱلۡأَرۡضِ
وَٱلۡفُلۡكَ تَجۡرِي فِي ٱلۡبَحۡرِ بِأَمۡرِهِۦ وَيُمۡسِكُ
ٱلسَّمَآءَ أَن تَقَعَ عَلَى ٱلۡأَرۡضِ إِلَّا بِإِذۡنِهِۦٓۗ إِنَّ
ٱللَّهَ بِٱلنَّاسِ لَرَءُوفٞ رَّحِيمٞ ٦٥
وَهُوَ ٱلَّذِيٓ أَحۡيَاكُمۡ ثُمَّ يُمِيتُكُمۡ ثُمَّ
يُحۡيِيكُمۡۗ إِنَّ ٱلۡإِنسَٰنَ لَكَفُورٞ ٦٦
لِّكُلِّ أُمَّةٖ جَعَلۡنَا مَنسَكًا هُمۡ نَاسِكُوهُۖ فَلَا
يُنَٰزِعُنَّكَ فِي ٱلۡأَمۡرِۚ وَٱدۡعُ إِلَىٰ رَبِّكَۖ إِنَّكَ لَعَلَىٰ
هُدٗى مُّسۡتَقِيمٖ ٦٧
وَإِن جَٰدَلُوكَ فَقُلِ ٱللَّهُ أَعۡلَمُ بِمَا
تَعۡمَلُونَ ٦٨
ٱللَّهُ يَحۡكُمُ بَيۡنَكُمۡ يَوۡمَ ٱلۡقِيَٰمَةِ فِيمَا كُنتُمۡ
فِيهِ تَخۡتَلِفُونَ ٦٩
أَلَمۡ تَعۡلَمۡ أَنَّ ٱللَّهَ يَعۡلَمُ مَا فِي ٱلسَّمَآءِ
وَٱلۡأَرۡضِۚ إِنَّ ذَٰلِكَ فِي كِتَٰبٍۚ إِنَّ ذَٰلِكَ عَلَى

នោះគឺជាការងាយស្រួលបំផុតចំពោះអល់ឡោះ ។

៧១-តែពួកគេគោរពសក្ការៈផ្សេងពីអល់ឡោះនូវអ្វីដែលទ្រង់មិនបានបញ្ចុះភស្តុតាងណាមួយនឹងវា និងអ្វីដែលពួកគេគ្មានចំណេះដឹងនឹងវា ហើយពួកដែលបំពានគ្មានអ្នកជួយឡើយ ។

៧២-ហើយនៅពេលដែលមានគេសូត្រអាយ៉ាត់ៗដ៏ច្បាស់លាស់របស់យើងឱ្យពួកគេស្តាប់ អ្នកអាចសង្កេតឃើញការខឹងសម្បានៅលើទឹកមុខរបស់ពួកដែលបានប្រឆាំង ដោយពួកគេស្ទើរតែហក់ទៅវាយប្រហារបណ្តាអ្នកដែលកំពុងសូត្រអាយ៉ាត់ៗរបស់យើងឱ្យពួកគេស្តាប់នោះ ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើចង់ឱ្យខ្ញុំប្រាប់ពួកអ្នកនូវអ្វីដែលអាក្រក់ជាងនេះទៅទៀតទេ? នោះគឺភ្លើងនរកដែលអល់ឡោះបានសន្យាវាចំពោះពួកដែលបានប្រឆាំង ហើយជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត ។

៧៣-ឱមនុស្សលោក! គេបានលើកជាឧទាហរណ៍មួយ ដូច្នេះចូរពួកអ្នកស្តាប់ទៅចំពោះវា ។ ពិតប្រាកដណាស់ ពួក(ព្រះនានា)ដែលពួកអ្នកកំពុងបួងសួងសុំផ្សេងពីអល់ឡោះនោះគឺពួកគេ(ព្រះនានា)គ្មានសមត្ថភាពបង្កើត សូម្បីតែសត្វរុយមួយឡើយ ហើយទោះបីជាពួកគេសហការគ្នាបង្កើតវាក៏ដោយ ។ ហើយប្រសិនបើមានសត្វរុយមកទំស៊ីសំណែនរបស់ពួកគេនោះ ពួកគេក៏គ្មានសមត្ថភាពនឹងដេញ ឬបក់រុយនោះចេញដែរ ។ អ្នកដែលបួងសួងសុំនិងអ្នកដែលត្រូវគេបួងសួងសុំ(ព្រះនានា)គឺទន់ខ្សោយបំផុត ។

៧៤-ពួកគេមិនបានលើកតម្កើងអល់ឡោះឱ្យសមនឹងឋានៈរបស់ទ្រង់ពិតប្រាកដឡើយ ។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងពូកែ មានអានុភាពបំផុត ។

៧៥-អល់ឡោះជ្រើសរើសអ្នកនាំសារអំពីម៉ាឡាអ៊ីកាត់ និងមនុស្សលោក ។ ពិតប្រាកដណាស់អល់ឡោះមហាឮ មហាឃើញ ។

៧៦-ទ្រង់ដឹងនូវអ្វីដែល(នឹងកើតឡើង)នៅខាងមុខពួកគេ(ថ្ងៃ

ٱللَّهِ يَسِيرٌ ﴿٧٠﴾

وَيَعْبُدُونَ مِن دُونِ ٱللَّهِ مَا لَمْ يُنَزِّلْ بِهِۦ سُلْطَٰنًا وَمَا لَيْسَ لَهُم بِهِۦ عِلْمٌ ۗ وَمَا لِلظَّٰلِمِينَ مِن نَّصِيرٍ ﴿٧١﴾

وَإِذَا تُتْلَىٰ عَلَيْهِمْ ءَايَٰتُنَا بَيِّنَٰتٍ تَعْرِفُ فِى وُجُوهِ ٱلَّذِينَ كَفَرُوا۟ ٱلْمُنكَرَ ۖ يَكَادُونَ يَسْطُونَ بِٱلَّذِينَ يَتْلُونَ عَلَيْهِمْ ءَايَٰتِنَا ۗ قُلْ أَفَأُنَبِّئُكُم بِشَرٍّ مِّن ذَٰلِكُمُ ۗ ٱلنَّارُ وَعَدَهَا ٱللَّهُ ٱلَّذِينَ كَفَرُوا۟ ۖ وَبِئْسَ ٱلْمَصِيرُ ﴿٧٢﴾

يَٰٓأَيُّهَا ٱلنَّاسُ ضُرِبَ مَثَلٌ فَٱسْتَمِعُوا۟ لَهُۥٓ ۚ إِنَّ ٱلَّذِينَ تَدْعُونَ مِن دُونِ ٱللَّهِ لَن يَخْلُقُوا۟ ذُبَابًا وَلَوِ ٱجْتَمَعُوا۟ لَهُۥ ۖ وَإِن يَسْلُبْهُمُ ٱلذُّبَابُ شَيْـًٔا لَّا يَسْتَنقِذُوهُ مِنْهُ ۚ ضَعُفَ ٱلطَّالِبُ وَٱلْمَطْلُوبُ ﴿٧٣﴾

مَا قَدَرُوا۟ ٱللَّهَ حَقَّ قَدْرِهِۦٓ ۗ إِنَّ ٱللَّهَ لَقَوِىٌّ عَزِيزٌ ﴿٧٤﴾

ٱللَّهُ يَصْطَفِى مِنَ ٱلْمَلَٰٓئِكَةِ رُسُلًا وَمِنَ ٱلنَّاسِ ۚ إِنَّ ٱللَّهَ سَمِيعٌۢ بَصِيرٌ ﴿٧٥﴾

يَعْلَمُ مَا بَيْنَ أَيْدِيهِمْ وَمَا خَلْفَهُمْ ۗ وَإِلَى

ٱللَّهِ تُرۡجَعُ ٱلۡأُمُورُ ﴿٧٦﴾

បរលោក) និងអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមក(ក្នុងលោកិយ)។ ហើយកិច្ចការទាំងអស់នឹងត្រូវវិលត្រឡប់ទៅចំពោះអល់ឡោះវិញ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱرۡكَعُواْ وَٱسۡجُدُواْ وَٱعۡبُدُواْ رَبَّكُمۡ وَٱفۡعَلُواْ ٱلۡخَيۡرَ لَعَلَّكُمۡ تُفۡلِحُونَ۩ ﴿٧٧﴾

៧៧-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នករូកុនិងស៊ូជូត ហើយនិងគោរពសក្ការៈចំពោះម្ចាស់របស់ពួកអ្នក ហើយចូរពួកអ្នកសាងអំពើល្អដើម្បីឱ្យពួកអ្នកនឹងទទួលបានជោគជ័យ(នៅថ្ងៃបរលោក)។

وَجَٰهِدُواْ فِي ٱللَّهِ حَقَّ جِهَادِهِۦۚ هُوَ ٱجۡتَبَىٰكُمۡ وَمَا جَعَلَ عَلَيۡكُمۡ فِي ٱلدِّينِ مِنۡ حَرَجٖۚ مِّلَّةَ أَبِيكُمۡ إِبۡرَٰهِيمَۚ هُوَ سَمَّىٰكُمُ ٱلۡمُسۡلِمِينَ مِن قَبۡلُ وَفِي هَٰذَا لِيَكُونَ ٱلرَّسُولُ شَهِيدًا عَلَيۡكُمۡ وَتَكُونُواْ شُهَدَآءَ عَلَى ٱلنَّاسِۚ فَأَقِيمُواْ ٱلصَّلَوٰةَ وَءَاتُواْ ٱلزَّكَوٰةَ وَٱعۡتَصِمُواْ بِٱللَّهِ هُوَ مَوۡلَىٰكُمۡۖ فَنِعۡمَ ٱلۡمَوۡلَىٰ وَنِعۡمَ ٱلنَّصِيرُ ﴿٧٨﴾

៧៨-ហើយចូរពួកអ្នកតស៊ូប្រយុទ្ធក្នុងមាគ៌ារបស់អល់ឡោះនូវការតស៊ូមួយដ៏ពិតប្រាកដ។ ទ្រង់បានជ្រើសរើសពួកអ្នក ហើយទ្រង់មិនបានធ្វើឱ្យពួកអ្នកមានការលំបាកនៅក្នុងសាសនាឡើយ។(ចូរពួកអ្នកប្រកាន់ខ្ជាប់នូវ)សាសនាឪពុករបស់ពួកអ្នកអ៊ីព្រហ៊ីម។ ទ្រង់បានដាក់ឈ្មោះឱ្យពួកអ្នកជាអ្នកមូស្លីមតាំងពីមុនមកម្ល៉េះ។ ហើយនៅក្នុង(គម្ពីរគួរអាន)នេះក៏ដូច្នោះដែរ ដើម្បីឱ្យអ្នកនាំសារ(មូហាំម៉ាត់)ធ្វើជាសាក្សីលើពួកអ្នកនិងដើម្បីឱ្យពួកអ្នកធ្វើជាសាក្សីលើមនុស្សលោក។ ដូច្នេះ ចូរពួកអ្នកប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ ហើយនិងប្រកាន់ខ្ជាប់នឹងសាសនារបស់អល់ឡោះ ដោយទ្រង់គឺជាអ្នកគាំពារពួកអ្នក។ ដូច្នេះទ្រង់ជាអ្នកគ្រប់គ្រង និងជាអ្នកជួយដ៏ប្រសើរបំផុត។

## سورة المؤمنون

## ជំពូកអាល់មុមីនូន

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

قَدۡ أَفۡلَحَ ٱلۡمُؤۡمِنُونَ ﴿١﴾

១-បណ្តាអ្នកដែលមានជំនឿពិតជាទទួលបានជោគជ័យ។

ٱلَّذِينَ هُمۡ فِي صَلَاتِهِمۡ خَٰشِعُونَ ﴿٢﴾

២-គឺបណ្តាអ្នកដែលមានចិត្តនឹងនរក្នុងការប្រតិបត្តិសឡាតរបស់ពួកគេ។

وَٱلَّذِينَ هُمۡ عَنِ ٱللَّغۡوِ مُعۡرِضُونَ ﴿٣﴾

៣-និងបណ្តាអ្នកដែលបោះបង់ចោលនូវរាល់ទង្វើដែលគ្មានប្រយោជន៍។

وَٱلَّذِينَ هُمۡ لِلزَّكَوٰةِ فَٰعِلُونَ ﴿٤﴾

៤-និងបណ្តាអ្នកដែលបានបរិច្ចាគហ្សាកាត់។

وَٱلَّذِينَ هُمۡ لِفُرُوجِهِمۡ حَٰفِظُونَ ﴿٥﴾

៥-និងបណ្តាអ្នកដែលបានថែរក្សាប្រដាប់ភេទរបស់ពួកគេ។

إِلَّا عَلَىٰٓ أَزْوَٰجِهِمْ أَوْ مَا مَلَكَتْ أَيْمَٰنُهُمْ فَإِنَّهُمْ غَيْرُ مَلُومِينَ ﴿٦﴾

៦-លើកលែងតែចំពោះភរិយារបស់ពួកគេ និងពួកខ្ញុំបម្រើស្រីដាច់ថ្លៃ ដែលនៅក្រោមការគ្រប់គ្រងរបស់ពួកគេប៉ុណ្ណោះ ។ ហើយពិតប្រាកដណាស់ ពួកគេមិនត្រូវបានគេយកទោសពៃរ៍ឡើយ ។

فَمَنِ ٱبْتَغَىٰ وَرَآءَ ذَٰلِكَ فَأُو۟لَٰٓئِكَ هُمُ ٱلْعَادُونَ ﴿٧﴾

៧-អ្នកណាហើយដែលបានស្វែងរកការត្រេកត្រអាលក្រៅពី (ប្រពន្ធ និងខ្ញុំបម្រើដាច់ថ្លៃ) នេះ ពួកទាំងនោះហើយគឺជាពួកដែលបានល្មើស(នឹងបទបញ្ញត្តិរបស់ទ្រង់) ។

وَٱلَّذِينَ هُمْ لِأَمَٰنَٰتِهِمْ وَعَهْدِهِمْ رَٰعُونَ ﴿٨﴾

៨-ហើយនិងបណ្ដាអ្នកដែលថែរក្សានូវភាពស្មោះត្រង់និងការសន្យារបស់ពួកគេ ។

وَٱلَّذِينَ هُمْ عَلَىٰ صَلَوَٰتِهِمْ يُحَافِظُونَ ﴿٩﴾

៩-ព្រមទាំងបណ្ដាអ្នកដែលថែរក្សាការប្រតិបត្តិសឡាតរបស់ពួកគេ ។

أُو۟لَٰٓئِكَ هُمُ ٱلْوَٰرِثُونَ ﴿١٠﴾

១០-អ្នកទាំងនោះហើយគឺជាអ្នកដែលត្រូវទទួលមរតក(ឋានសួគ៌) ។

ٱلَّذِينَ يَرِثُونَ ٱلْفِرْدَوْسَ هُمْ فِيهَا خَٰلِدُونَ ﴿١١﴾

១១-ដែលពួកគេនឹងត្រូវទទួលមរតកឋានសួគ៌ហ្វៀរដោស(ឋានសួគ៌ដែលមានឋានៈខ្ពង់ខ្ពស់ជាងគេ) ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។

وَلَقَدْ خَلَقْنَا ٱلْإِنسَٰنَ مِن سُلَٰلَةٍ مِّن طِينٍ ﴿١٢﴾

១២-ហើយជាការពិតណាស់ យើងបានបង្កើតមនុស្សលោក (អាដាំ) ពីដីឥដ្ឋ(ផ្សំពីទឹកនិងដី) ។

ثُمَّ جَعَلْنَٰهُ نُطْفَةً فِى قَرَارٍ مَّكِينٍ ﴿١٣﴾

១៣-ក្រោយមកយើងបានបង្កើតគេពីទឹកកាមនៅក្នុងកន្លែងដែលមានសុវត្ថិភាព(នៅក្នុងស្បូន) ។

ثُمَّ خَلَقْنَا ٱلنُّطْفَةَ عَلَقَةً فَخَلَقْنَا ٱلْعَلَقَةَ مُضْغَةً فَخَلَقْنَا ٱلْمُضْغَةَ عِظَٰمًا فَكَسَوْنَا ٱلْعِظَٰمَ لَحْمًا ثُمَّ أَنشَأْنَٰهُ خَلْقًا ءَاخَرَ ۚ فَتَبَارَكَ ٱللَّهُ أَحْسَنُ ٱلْخَٰلِقِينَ ﴿١٤﴾

១៤-បន្ទាប់មកយើងបានបង្កើតទឹកកាមនោះឱ្យទៅជាឈាមមួយដុំ ហើយយើងបានបង្កើតដុំឈាមនោះទៅជាសាច់មួយដុំ រួចយើងបានបង្កើតដុំសាច់នោះឱ្យមានជាឆ្អឹង ហើយយើងបានគ្របដណ្ដប់ឆ្អឹងនោះដោយសាច់ ក្រោយមកទៀតយើងបានបង្កើតវាទៅជារូបរាងមួយផ្សេងទៀត(ដោយផ្លុំជីវិតទៅក្នុងរូបនោះ) ។ ហើយអល់ឡោះ មហាឧត្ដុង្គឧត្ដម ដែលជាអ្នកបង្កើតដ៏ប្រសើរបំផុត ។

ثُمَّ إِنَّكُم بَعْدَ ذَٰلِكَ لَمَيِّتُونَ ﴿١٥﴾

១៥-បន្ទាប់មកពួកអ្នកពិតជាស្លាប់ក្រោយពីនោះ(ពេលកំណត់

អាយុកាល) ។

ثُمَّ إِنَّكُمۡ يَوۡمَ ٱلۡقِيَٰمَةِ تُبۡعَثُونَ ﴿١٦﴾

១៦-បន្ទាប់មក ពួកអ្នកពិតជានឹងត្រូវគេធ្វើឱ្យរស់ឡើងវិញនៅថ្ងៃបរលោក ។

وَلَقَدۡ خَلَقۡنَا فَوۡقَكُمۡ سَبۡعَ طَرَآئِقَ وَمَا كُنَّا عَنِ ٱلۡخَلۡقِ غَٰفِلِينَ ﴿١٧﴾

១៧-ហើយជាការពិតណាស់ យើងបានបង្កើតមេឃប្រាំពីរជាន់នៅខាងលើពួកអ្នក ហើយយើងមិនបានព្រងើយកន្តើយចំពោះសត្វលោកឡើយ ។

وَأَنزَلۡنَا مِنَ ٱلسَّمَآءِ مَآءَۢ بِقَدَرٖ فَأَسۡكَنَّٰهُ فِي ٱلۡأَرۡضِۖ وَإِنَّا عَلَىٰ ذَهَابِۭ بِهِۦ لَقَٰدِرُونَ ﴿١٨﴾

១៨-ហើយយើងបានបញ្ចុះទឹកភ្លៀងពីលើមេឃតាមការកំណត់ រួចយើងបានផ្ទុកវានៅលើផែនដី ។ ហើយពិតប្រាកដណាស់ យើងក៏ជាអ្នកមានសមត្ថភាពធ្វើឱ្យវារីងទៅវិញដែរ ។

فَأَنشَأۡنَا لَكُم بِهِۦ جَنَّٰتٖ مِّن نَّخِيلٖ وَأَعۡنَٰبٖ لَّكُمۡ فِيهَا فَوَٰكِهُ كَثِيرَةٞ وَمِنۡهَا تَأۡكُلُونَ ﴿١٩﴾

១៩-ហើយដោយសារទឹកភ្លៀងនេះ យើងបានបង្កើតច្បារដំណាំអំពីដើមល្មើ និងទំពាំងបាយជូរសម្រាប់ពួកអ្នកដោយនៅក្នុងនោះមានផ្លែឈើជាច្រើនសម្រាប់ពួកអ្នកបរិភោគវា ។

وَشَجَرَةٗ تَخۡرُجُ مِن طُورِ سَيۡنَآءَ تَنۢبُتُ بِٱلدُّهۡنِ وَصِبۡغٖ لِّلۡأٓكِلِينَ ﴿٢٠﴾

២០-ហើយ(យើងបានបង្កើតឱ្យមាន)ដើមឈើ(ហៃរ្យទូន)ដែលដុះនៅជុំវិញភ្នំតួរសៃណាកដែលអាចចម្រាញ់ជាប្រេង និងជាចំណីអាហារដ៏ឆ្ងាញ់សម្រាប់អ្នកដែលបរិភោគ ។

وَإِنَّ لَكُمۡ فِي ٱلۡأَنۡعَٰمِ لَعِبۡرَةٗۖ نُّسۡقِيكُم مِّمَّا فِي بُطُونِهَا وَلَكُمۡ فِيهَا مَنَٰفِعُ كَثِيرَةٞ وَمِنۡهَا تَأۡكُلُونَ ﴿٢١﴾

២១-ហើយពិតប្រាកដណាស់ ចំពោះសត្វពាហនៈគឺជាមេរៀនមួយសម្រាប់ពួកអ្នក(ទុកពិចារណា) ។ យើងផ្តល់ឱ្យពួកអ្នកទទួលទាននូវអ្វី(ទឹកដោះ)ដែលមាននៅក្នុងពោះរបស់ពួកវា ។ ហើយចំពោះសត្វនោះ វាមានផលប្រយោជន៍ជាច្រើនសម្រាប់ពួកអ្នក ហើយវាមួយចំនួនពួកអ្នកក៏អាចទទួលទានបានផងដែរ ។

وَعَلَيۡهَا وَعَلَى ٱلۡفُلۡكِ تُحۡمَلُونَ ﴿٢٢﴾

២២-ហើយពួកអ្នកត្រូវដឹកជញ្ជូននៅលើវា(សត្វអូដ្ឋ)និងនៅលើសំពៅ ។

وَلَقَدۡ أَرۡسَلۡنَا نُوحًا إِلَىٰ قَوۡمِهِۦ فَقَالَ يَٰقَوۡمِ ٱعۡبُدُواْ ٱللَّهَ مَا لَكُم مِّنۡ إِلَٰهٍ غَيۡرُهُۥٓۚ أَفَلَا تَتَّقُونَ ﴿٢٣﴾

២៣-ហើយជាការពិតណាស់ យើងបានបញ្ជូនណួហទៅកាន់ក្រុមរបស់គេ ហើយគេបានពោលថា: ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ សម្រាប់ពួកអ្នកគ្មានម្ចាស់ណាផ្សេងក្រៅពីទ្រង់ឡើយ ។ តើពួកអ្នកមិនកោតខ្លាចអល់ឡោះទេឬ?

فَقَالَ ٱلۡمَلَؤُاْ ٱلَّذِينَ كَفَرُواْ مِن قَوۡمِهِۦ مَا
هَٰذَآ إِلَّا بَشَرٞ مِّثۡلُكُمۡ يُرِيدُ أَن يَتَفَضَّلَ
عَلَيۡكُمۡ وَلَوۡ شَآءَ ٱللَّهُ لَأَنزَلَ مَلَٰٓئِكَةٗ مَّا
سَمِعۡنَا بِهَٰذَا فِيٓ ءَابَآئِنَا ٱلۡأَوَّلِينَ ٢٤

២៤-ហើយពួកមេដឹកនាំនៃក្រុមរបស់គេដែលគ្មានជំនឿបាននិយាយថាៈ គេ(នួហ) នេះមិនមែនជាអ្វីក្រៅពីជាមនុស្សធម្មតាដូចពួកអ្នក ដែលគេចង់លើកតម្កើង(ខ្លួនគេ) ឱ្យខ្ពស់ជាងពួកអ្នកនោះឡើយ ។ ហើយប្រសិនបើអល់ឡោះមានចេតនា ទ្រង់ពិតជាបញ្ចុះម៉ាឡាអ៊ីកាត់(មកធ្វើជាអ្នកនាំសារ) ។ ពួកយើងមិនដែលបានឮរឿងបែបនេះទេតាំងពីជីដូនជីតារបស់ពួកយើងពីមុនមកម្ល៉េះ ។

إِنۡ هُوَ إِلَّا رَجُلُۢ بِهِۦ جِنَّةٞ فَتَرَبَّصُواْ بِهِۦ
حَتَّىٰ حِينٖ ٢٥

២៥-គេ(នួហ) នេះមិនមែនជាអ្វីក្រៅពីបុរសដែលមានរោគវិកលចរិតឡើយ ។ ដូច្នេះ ចូរពួកអ្នករង់ចាំមើលគេមួយរយៈកាលសិនចុះ ។

قَالَ رَبِّ ٱنصُرۡنِي بِمَا كَذَّبُونِ ٢٦

២៦-គេ(នួហ) បានបួងសួងសុំថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាជួយខ្ញុំពីអ្វីដែលពួកគេបានបដិសេធនឹងខ្ញុំផង ។

فَأَوۡحَيۡنَآ إِلَيۡهِ أَنِ ٱصۡنَعِ ٱلۡفُلۡكَ بِأَعۡيُنِنَا
وَوَحۡيِنَا فَإِذَا جَآءَ أَمۡرُنَا وَفَارَ ٱلتَّنُّورُ
فَٱسۡلُكۡ فِيهَا مِن كُلّٖ زَوۡجَيۡنِ ٱثۡنَيۡنِ
وَأَهۡلَكَ إِلَّا مَن سَبَقَ عَلَيۡهِ ٱلۡقَوۡلُ مِنۡهُمۡۖ
وَلَا تُخَٰطِبۡنِي فِي ٱلَّذِينَ ظَلَمُوٓاْ إِنَّهُم
مُّغۡرَقُونَ ٢٧

២៧-ដូច្នេះ យើងបានផ្ដល់វ៉ាហ៊ីទៅឱ្យគេថាៈ ចូរអ្នកធ្វើសំពៅមួយ(យ៉ាងធំ) ដោយមានការឃ្លាំមើលរបស់យើង និងតាមការវ៉ាហ៊ី(ចង្អុលបង្ហាញ) របស់យើង ។ក្រោយមកនៅពេលបទបញ្ជា(ទារុណកម្ម) របស់យើងបានមកដល់ ហើយទឹកបានផុះចេញពីដីយ៉ាងខ្លាំង(យើងបានមានបន្ទូលថា) ចូរអ្នក(នួហ) ផ្ទុក(សត្វពាហនៈ) នៅលើវា(សំពៅ) មួយគូៗគ្រប់ប្រភេទ(មានញី និងឈ្មោល) និងក្រុមគ្រួសារ(អ្នករួមជំនឿ) របស់អ្នក លើកលែងតែបុគ្គលណាដែលបានកំណត់ជាមុនក្នុងចំណោមពួកគេ(ក្នុងការពន្លិចក្នុងទឹកជំនន់) ។ ហើយចូរអ្នកកុំបួងសួងសុំពីយើងឱ្យ(សង្គ្រោះ) ពួកដែលបានបំពាននោះឱ្យសោះ ។ ពិតប្រាកដណាស់ ពួកគេនឹងត្រូវគេពន្លិច ។

فَإِذَا ٱسۡتَوَيۡتَ أَنتَ وَمَن مَّعَكَ عَلَى ٱلۡفُلۡكِ
فَقُلِ ٱلۡحَمۡدُ لِلَّهِ ٱلَّذِي نَجَّىٰنَا مِنَ ٱلۡقَوۡمِ
ٱلظَّٰلِمِينَ ٢٨

២៨-ហើយនៅពេលដែលអ្នកនិងអ្នករួមជំនឿជាមួយអ្នកបានឡើងទៅលើសំពៅហើយនោះ ចូរអ្នកពោលថាៈ រាល់ការសរសើរគឺចំពោះអល់ឡោះតែមួយគត់ ដែលទ្រង់បានសង្គ្រោះពួកយើងឱ្យរួចផុតពីក្រុមដែលបំពាន ។

وَقُل رَّبِّ أَنزِلۡنِي مُنزَلٗا مُّبَارَكٗا وَأَنتَ خَيۡرُ
ٱلۡمُنزِلِينَ ٢٩

២៩-ហើយចូរអ្នកពោលថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាឱ្យខ្ញុំចុះចតនៅកន្លែងមួយដ៏មានពរជ័យផងចុះ ។ ហើយទ្រង់ជាអ្នកប្រទានកន្លែងដ៏ល្អប្រសើរបំផុត ។

إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ وَإِن كُنَّا لَمُبۡتَلِينَ ٣٠

៣០-ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងៗ (បញ្ជាក់ពីភាពខ្លាំងក្លារបស់អល់ឡោះ) ។ ហើយយើងពិតជាបានសាកល្បងពួកគេ ។

ثُمَّ أَنشَأۡنَا مِنۢ بَعۡدِهِمۡ قَرۡنًا ءَاخَرِينَ ٣١

៣១-ក្រោយមកយើងបានបង្កើតមនុស្សមួយជំនាន់ផ្សេងទៀត (ក្រុមអាដ)បន្ទាប់ពីពួកគេ ។

فَأَرۡسَلۡنَا فِيهِمۡ رَسُولٗا مِّنۡهُمۡ أَنِ ٱعۡبُدُواْ ٱللَّهَ مَا لَكُم مِّنۡ إِلَٰهٍ غَيۡرُهُۥٓۚ أَفَلَا تَتَّقُونَ ٣٢

៣២-ហើយយើងបានចាត់តាំងឱ្យពួកគេនូវអ្នកនាំសារម្នាក់ (ហ៊ូទ) ក្នុងចំណោមពួកគេ (ដោយឱ្យគេអំពាវនាវថា) ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះចុះ ព្រោះពួកអ្នកគ្មានម្ចាស់ណាផ្សេងក្រៅពីទ្រង់ឡើយ ។ តើពួកអ្នកមិនកោតខ្លាចអល់ឡោះទេឬ?

وَقَالَ ٱلۡمَلَأُ مِن قَوۡمِهِ ٱلَّذِينَ كَفَرُواْ وَكَذَّبُواْ بِلِقَآءِ ٱلۡأٓخِرَةِ وَأَتۡرَفۡنَٰهُمۡ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَا مَا هَٰذَآ إِلَّا بَشَرٞ مِّثۡلُكُمۡ يَأۡكُلُ مِمَّا تَأۡكُلُونَ مِنۡهُ وَيَشۡرَبُ مِمَّا تَشۡرَبُونَ ٣٣

៣៣-ហើយពួកមេដឹកនាំនៃក្រុមរបស់គេដែលគ្មានជំនឿ និងបានបដិសេធនឹងការជួបនៃថ្ងៃបរលោក ហើយនិងពួកដែលយើងបានផ្តល់ភាពសប្បាយរីករាយក្នុងជីវិតលោកិយបាននិយាយថាៈ គេ(ហ៊ូទ) នេះមិនមែនជាអ្វីក្រៅពីជាមនុស្សធម្មតាដូចពួកអ្នកដែលគេបរិភោគនូវអ្វីដែលពួកអ្នកបរិភោគ និងផឹកនូវអ្វីដែលពួកអ្នកផឹកនោះឡើយ ។

وَلَئِنۡ أَطَعۡتُم بَشَرٗا مِّثۡلَكُمۡ إِنَّكُمۡ إِذٗا لَّخَٰسِرُونَ ٣٤

៣៤-ហើយប្រសិនបើពួកអ្នកប្រតិបត្តិតាមមនុស្សធម្មតាដូចពួកអ្នកដែរនោះ ដូច្នេះពួកអ្នកពិតជាខាតបង់ជាមិនខាន ។

أَيَعِدُكُمۡ أَنَّكُمۡ إِذَا مِتُّمۡ وَكُنتُمۡ تُرَابٗا وَعِظَٰمًا أَنَّكُم مُّخۡرَجُونَ ٣٥

៣៥-តើគេសន្យានឹងពួកអ្នកថាៈ ពិតប្រាកដណាស់ នៅពេលដែលពួកអ្នកស្លាប់ ហើយបានក្លាយជាធូលី និងឆ្អឹង ពួកអ្នកពិតជានឹងត្រូវគេធ្វើឱ្យរស់ឡើងវិញម្តងទៀតឬ?

۞هَيۡهَاتَ هَيۡهَاتَ لِمَا تُوعَدُونَ ٣٦

៣៦-អ្វីដែលពួកអ្នកត្រូវគេសន្យានោះគឺឆ្ងាយជាទីបំផុត ។

إِنۡ هِيَ إِلَّا حَيَاتُنَا ٱلدُّنۡيَا نَمُوتُ وَنَحۡيَا وَمَا نَحۡنُ بِمَبۡعُوثِينَ ٣٧

៣៧-គ្មានការរស់នៅណាក្រៅពីការរស់នៅរបស់ពួកយើងក្នុងលោកិយឡើយ ដោយពួកយើងស្លាប់និងពួកយើងរស់ ហើយពួកយើងក៏មិនត្រូវគេធ្វើឱ្យរស់ឡើងវិញដែរ ។

إِنۡ هُوَ إِلَّا رَجُلٌ ٱفۡتَرَىٰ عَلَى ٱللَّهِ كَذِبٗا وَمَا

៣៨-គេ(ហ៊ូទ) មិនមែនជាអ្វីក្រៅពីជាបុរសដែលបានប្រឌិតរឿងភូតកុហកទៅលើអល់ឡោះនោះឡើយ ។ ហើយពួកយើងក៏

មិនមានជំនឿនឹងគេដែរ ។

៣៩-គេ(ហ៊ូទ)បានបួងសួងសុំថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាជួយខ្ញុំអំពីអ្វីដែលពួកគេបានបដិសេធនឹងខ្ញុំផង ។

៤០-អល់ឡោះបានមានបន្ទូលថាៈ ក្នុងរយៈពេលបន្តិចទៀត ពួកគេពិតជានឹងក្លាយទៅជាពួកដែលមានវិប្បដិសារីជាមិនខាន ។

៤១-ហើយសំម្រែកដ៏ខ្លាំងបានឆក់យកជីវិតរបស់ពួកគេយ៉ាងពិតប្រាកដ ។ ហើយយើងបានធ្វើឱ្យពួកគេដូចសំរាម(ដែលអណ្តែតលើទឹក) ។ ដូច្នេះ វិនាសអន្តរាយហើយចំពោះក្រុមដែលបំពាន ។

៤២-ក្រោយមក យើងបានបង្កើតមនុស្សជាច្រើនជំនាន់ផ្សេងទៀតបន្ទាប់ពីពួកគេ ។

៤៣-គ្មានប្រជាជាតិណាមួយអាច(ធ្វើឱ្យសេចក្តីស្លាប់)កើតឡើងមុនពេលកំណត់របស់វាបានឡើយ ហើយពួកគេក៏មិនអាចសុំពន្យារពេល(សេចក្តីស្លាប់)បានដែរ ។

៤៤-ក្រោយមក យើងបានបញ្ជូនបណ្តាអ្នកនាំសាររបស់យើងជាបន្តបន្ទាប់ ។ រាល់ពេលដែលអ្នកនាំសារបានមកដល់ប្រជាជាតិនោះ ពួកគេតែងតែបដិសេធនឹងគេ ។ ហើយយើងបានធ្វើឱ្យពួកគេវិនាសអន្តរាយជាបន្តបន្ទាប់ ហើយយើងបានធ្វើឱ្យពួកគេក្លាយទៅជារឿងនិយាយតៗគ្នា(សម្រាប់អ្នកជំនាន់ក្រោយពិចារណា) ។ ដូច្នេះ វិនាសអន្តរាយហើយចំពោះក្រុមដែលគ្មានជំនឿ ។

៤៥-ក្រោយមកទៀត យើងបានបញ្ជូនមូសា និងបងរបស់គេ ហារូនជាមួយនឹងមុជីហ្សាត់របស់យើងជាច្រើន និងភស្តុតាងយ៉ាងច្បាស់លាស់

៤៦-ទៅកាន់ហ្វៀរអោន និងពួកមន្ត្រីរបស់គេ តែពួកគេបែរជាក្រអឺតក្រទម ហើយពួកគេជាក្រុមដែលធ្លាប់ព្រហើនក្អេងក្អាង ។

៤៧-ហើយពួកគេបាននិយាយថា : តើឱ្យពួកយើងជឿលើជនទាំងពីរដែលជាមនុស្សធម្មតាដូចពួកយើងដោយក្រុមរបស់គេទាំង

نَحْنُ لَهُۥ بِمُؤْمِنِينَ ﴿٣٨﴾

قَالَ رَبِّ ٱنصُرْنِى بِمَا كَذَّبُونِ ﴿٣٩﴾

قَالَ عَمَّا قَلِيلٍ لَّيُصْبِحُنَّ نَـٰدِمِينَ ﴿٤٠﴾

فَأَخَذَتْهُمُ ٱلصَّيْحَةُ بِٱلْحَقِّ فَجَعَلْنَـٰهُمْ غُثَآءً ۚ
فَبُعْدًا لِّلْقَوْمِ ٱلظَّـٰلِمِينَ ﴿٤١﴾

ثُمَّ أَنشَأْنَا مِنۢ بَعْدِهِمْ قُرُونًا ءَاخَرِينَ ﴿٤٢﴾

مَا تَسْبِقُ مِنْ أُمَّةٍ أَجَلَهَا وَمَا يَسْتَـْٔخِرُونَ ﴿٤٣﴾

ثُمَّ أَرْسَلْنَا رُسُلَنَا تَتْرَا ۖ كُلَّ مَا جَآءَ أُمَّةً
رَّسُولُهَا كَذَّبُوهُ ۚ فَأَتْبَعْنَا بَعْضَهُم بَعْضًا
وَجَعَلْنَـٰهُمْ أَحَادِيثَ ۚ فَبُعْدًا لِّقَوْمٍ لَّا
يُؤْمِنُونَ ﴿٤٤﴾

ثُمَّ أَرْسَلْنَا مُوسَىٰ وَأَخَاهُ هَـٰرُونَ بِـَٔايَـٰتِنَا
وَسُلْطَـٰنٍ مُّبِينٍ ﴿٤٥﴾

إِلَىٰ فِرْعَوْنَ وَمَلَإِي۟هِۦ فَٱسْتَكْبَرُوا۟ وَكَانُوا۟
قَوْمًا عَالِينَ ﴿٤٦﴾

فَقَالُوٓا۟ أَنُؤْمِنُ لِبَشَرَيْنِ مِثْلِنَا وَقَوْمُهُمَا لَنَا
عَـٰبِدُونَ ﴿٤٧﴾

ពីរគឺជាពួកដែលគោរពមកចំពោះយើងឬ?

فَكَذَّبُوهُمَا فَكَانُواْ مِنَ ٱلۡمُهۡلَكِينَ ﴿٤٨﴾

៤៨-ហើយពួកគេបានបដិសេធនឹងគេទាំងពីរ ដូច្នេះពួកគេក៏បានស្ថិតក្នុងចំណោមពួកដែលត្រូវគេបំផ្លិចបំផ្លាញ។

وَلَقَدۡ ءَاتَيۡنَا مُوسَى ٱلۡكِتَٰبَ لَعَلَّهُمۡ يَهۡتَدُونَ ﴿٤٩﴾

៤៩-ហើយជាការពិតណាស់ យើងបានប្រទានឱ្យមូសានូវគម្ពីរ (តាវរ៉ត) ដើម្បីឱ្យពួកគេទទួលបានការចង្អុលបង្ហាញ។

وَجَعَلۡنَا ٱبۡنَ مَرۡيَمَ وَأُمَّهُۥٓ ءَايَةٗ وَءَاوَيۡنَٰهُمَآ إِلَىٰ رَبۡوَةٖ ذَاتِ قَرَارٖ وَمَعِينٖ ﴿٥٠﴾

៥០-ហើយយើងបានធ្វើឱ្យកូនរបស់ម៉ារយ៉ាំ(អ៊ីសា) និងម្ដាយរបស់គេជាភស្តុតាងមួយ(បញ្ជាក់ពីសមត្ថភាពរបស់យើង)។ ហើយយើងបានផ្ដល់ឱ្យគេទាំងពីរនូវកន្លែងខ្ពស់ ប្រកបដោយសុវត្ថិភាព និងមានប្រភពទឹក។

يَٰٓأَيُّهَا ٱلرُّسُلُ كُلُواْ مِنَ ٱلطَّيِّبَٰتِ وَٱعۡمَلُواْ صَٰلِحًاۖ إِنِّي بِمَا تَعۡمَلُونَ عَلِيمٞ ﴿٥١﴾

៥១-ឱបណ្ដាអ្នកនាំសារ! ចូរអ្នកទាំងអស់ទទួលទានចំណីអាហារណាដែលល្អ(ហាឡាល់) ហើយចូរពួកអ្នកសាងអំពើល្អ។ ពិតប្រាកដណាស់ យើងមហាដឹងនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

وَإِنَّ هَٰذِهِۦٓ أُمَّتُكُمۡ أُمَّةٗ وَٰحِدَةٗ وَأَنَا۠ رَبُّكُمۡ فَٱتَّقُونِ ﴿٥٢﴾

៥២-ហើយពិតប្រាកដណាស់ នេះជាសាសនារបស់ពួកអ្នកគឺសាសនាតែមួយគត់(អ៊ីស្លាម) ហើយយើងជាម្ចាស់របស់ពួកអ្នក។ ដូច្នេះ ចូរពួកអ្នកកោតខ្លាចមកចំពោះយើង។

فَتَقَطَّعُوٓاْ أَمۡرَهُم بَيۡنَهُمۡ زُبُرٗاۖ كُلُّ حِزۡبِۭ بِمَا لَدَيۡهِمۡ فَرِحُونَ ﴿٥٣﴾

៥៣-ក្រោយមក ពួកគេបានខ្វែងគំនិតគ្នានៅក្នុងកិច្ចការសាសនារបស់ពួកគេ ដោយបែកខ្ញែកជាច្រើនក្រុម។ ក្រុមនីមួយៗសប្បាយចិត្តនូវអ្វីដែលពួកគេមាន(គម្ពីររៀងៗខ្លួន)។

فَذَرۡهُمۡ فِي غَمۡرَتِهِمۡ حَتَّىٰ حِينٍ ﴿٥٤﴾

៥៤-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)បណ្ដោយឱ្យពួកគេស្ថិតក្នុងភាពវង្វេងរបស់ពួកគេរហូតដល់ពេលមួយសិនចុះ(ពួកគេនឹងដឹងខ្លួនជាមិនខាន)។

أَيَحۡسَبُونَ أَنَّمَا نُمِدُّهُم بِهِۦ مِن مَّالٖ وَبَنِينَ ﴿٥٥﴾

៥៥-តើពួកគេគិតថា ពិតប្រាកដណាស់ អ្វីដែលយើងផ្ដល់ឱ្យពួកគេអំពីទ្រព្យសម្បត្តិ និងកូនចៅ

نُسَارِعُ لَهُمۡ فِي ٱلۡخَيۡرَٰتِۚ بَل لَّا يَشۡعُرُونَ ﴿٥٦﴾

៥៦-គឺយើងរួសរាន់ប្រទានឱ្យពួកគេនូវប្រការល្អឬ? ផ្ទុយទៅវិញ ពួកគេមិនដឹងខ្លួនឡើយ។

៥៧-ពិតប្រាកដណាស់ បណ្ដាអ្នកដែលប្រុងប្រយ័ត្នដោយការកោតខ្លាចចំពោះ(ទារុណកម្ម) ម្ចាស់របស់ពួកគេ ។

إِنَّ ٱلَّذِينَ هُم مِّنْ خَشْيَةِ رَبِّهِم مُّشْفِقُونَ ٥٧

៥៨-ហើយបណ្ដាអ្នកដែលមានជំនឿនឹងអាយ៉ាត់ៗនៃម្ចាស់របស់ពួកគេ ។

وَٱلَّذِينَ هُم بِـَٔايَٰتِ رَبِّهِمْ يُؤْمِنُونَ ٥٨

៥៩-និងបណ្ដាអ្នកដែលមិនធ្វើស្ហ៊ីរិកនឹងម្ចាស់របស់ពួកគេ ។

وَٱلَّذِينَ هُم بِرَبِّهِمْ لَا يُشْرِكُونَ ٥٩

៦០-ហើយនិងបណ្ដាអ្នកដែលបរិច្ចាគនូវអ្វីដែលពួកគេមានដោយចិត្តរបស់ពួកគេភ័យខ្លាចថា (អល់ឡោះមិនទទួលយក ព្រោះពួកគេគិតថា) ពិតប្រាកដណាស់ ពួកគេនឹងវិលត្រឡប់ទៅរកម្ចាស់របស់ពួកគេវិញ ។

وَٱلَّذِينَ يُؤْتُونَ مَآ ءَاتَوا۟ وَّقُلُوبُهُمْ وَجِلَةٌ أَنَّهُمْ إِلَىٰ رَبِّهِمْ رَٰجِعُونَ ٦٠

៦១-អ្នកទាំងនោះគឺជាអ្នកដែលរួសរាន់ក្នុងការសាងអំពើល្អ ហើយពួកគេជាអ្នកដំបូងគេបង្អស់ចំពោះការសាងអំពើល្អនោះ ។

أُو۟لَٰٓئِكَ يُسَٰرِعُونَ فِى ٱلْخَيْرَٰتِ وَهُمْ لَهَا سَٰبِقُونَ ٦١

៦២-ហើយយើងមិនដាក់បន្ទុកលើបុគ្គលណាម្នាក់ឱ្យហួសពីសមត្ថភាពរបស់គេឡើយ ។ ហើយយើងមានសៀវភៅកំណត់ហេតុមួយដែលបញ្ជាក់យ៉ាងពិតប្រាកដ ។ ហើយពួកគេមិនត្រូវគេបំពានឡើយ ។

وَلَا نُكَلِّفُ نَفْسًا إِلَّا وُسْعَهَا ۖ وَلَدَيْنَا كِتَٰبٌ يَنطِقُ بِٱلْحَقِّ ۚ وَهُمْ لَا يُظْلَمُونَ ٦٢

៦៣-ផ្ទុយទៅវិញចិត្តរបស់ពួកគេ(ពួកកាហ្វេរ) ស្ថិតក្នុងភាពវង្វេងអំពី(គម្ពីរគួរអាន) នេះ ហើយពួកគេមានអំពើ(អាក្រក់) ជាច្រើនផ្សេងពីនោះ ដែលពួកគេកំពុងតែប្រព្រឹត្តវា ។

بَلْ قُلُوبُهُمْ فِى غَمْرَةٍ مِّنْ هَٰذَا وَلَهُمْ أَعْمَٰلٌ مِّن دُونِ ذَٰلِكَ هُمْ لَهَا عَٰمِلُونَ ٦٣

៦៤-រហូតទាល់តែនៅពេលដែលយើងបានឆក់យកជីវិតពួកដែលមានទ្រព្យសម្បត្តិស្ដុកស្ដម្ភក្នុងចំណោមពួកគេដោយទារុណកម្ម ស្រាប់តែពួកគេស្រែកសុំជំនួយ ។

حَتَّىٰٓ إِذَآ أَخَذْنَا مُتْرَفِيهِم بِٱلْعَذَابِ إِذَا هُمْ يَجْـَٔرُونَ ٦٤

៦៥-ពួកអ្នកមិនត្រូវស្រែកសុំជំនួយនៅថ្ងៃនេះទេ ។ ពិតប្រាកដណាស់ ពួកអ្នកមិនត្រូវគេជួយឱ្យរួចផុតពី(ទារុណកម្ម) យើងឡើយ ។

لَا تَجْـَٔرُوا۟ ٱلْيَوْمَ ۖ إِنَّكُم مِّنَّا لَا تُنصَرُونَ ٦٥

៦៦-ជាការពិតណាស់ អាយ៉ាត់ៗរបស់យើងត្រូវបានគេសូត្រឱ្យពួកអ្នកស្ដាប់ តែពួកអ្នកបែរជាបានបែរត្រឡប់ក្រោយ(មិនយកចិត្តទុកដាក់ស្ដាប់) ទៅវិញ ។

قَدْ كَانَتْ ءَايَٰتِى تُتْلَىٰ عَلَيْكُمْ فَكُنتُمْ عَلَىٰٓ أَعْقَٰبِكُمْ تَنكِصُونَ ٦٦

مُسۡتَكۡبِرِينَ بِهِۦ سَٰمِرٗا تَهۡجُرُونَ ٦٧

៦៧-ដោយពួកអ្នកក្រអឺតក្រទមព្រោះតែ(ពួកអ្នកគិតថាជាម្ចាស់)ម៉ាស្ជិទិលហារ៉ម ថែមទាំងពួកអ្នកនិយាយអាក្រក់(អំពីគម្ពីរគួរអាន)នៅពេលយប់ទៀតផង។

أَفَلَمۡ يَدَّبَّرُواْ ٱلۡقَوۡلَ أَمۡ جَآءَهُم مَّا لَمۡ يَأۡتِ ءَابَآءَهُمُ ٱلۡأَوَّلِينَ ٦٨

៦៨-ដូច្នេះ តើពួកគេមិនបានពិចារណាចំពោះពាក្យសំដី(នៅក្នុងគម្ពីរគួរអាន)ឬអ្វីដែលបានមកដល់ពួកគេ(គម្ពីរគួរអាន)ដែលជីដូនជីតារបស់ពួកគេជំនាន់មុនមិនបានទទួលទេឬ?

أَمۡ لَمۡ يَعۡرِفُواْ رَسُولَهُمۡ فَهُمۡ لَهُۥ مُنكِرُونَ ٦٩

៦៩-ឬមួយពួកគេមិនបានស្គាល់អ្នកនាំសារ(មូហាំម៉ាត់)របស់ពួកគេ ទើបពួកគេបដិសេធនឹងគេឬ?

أَمۡ يَقُولُونَ بِهِۦ جِنَّةُۢۚ بَلۡ جَآءَهُم بِٱلۡحَقِّ وَأَكۡثَرُهُمۡ لِلۡحَقِّ كَٰرِهُونَ ٧٠

៧០-ឬមួយពួកគេចោទគេថាជាមនុស្សវិកលចរិត? ផ្ទុយទៅវិញ គេបាននាំនាំឱ្យពួកគេនូវការពិត(ការគោរពសក្ការៈចំពោះអល់ឡោះ គម្ពីរគួរអាន និងសាសនាអ៊ីស្លាម) តែពួកគេភាគច្រើនមិនពេញចិត្តនឹងការពិតនោះទៅវិញ។

وَلَوِ ٱتَّبَعَ ٱلۡحَقُّ أَهۡوَآءَهُمۡ لَفَسَدَتِ ٱلسَّمَٰوَٰتُ وَٱلۡأَرۡضُ وَمَن فِيهِنَّۚ بَلۡ أَتَيۡنَٰهُم بِذِكۡرِهِمۡ فَهُمۡ عَن ذِكۡرِهِم مُّعۡرِضُونَ ٧١

៧១-ហើយប្រសិនបើ(អល់ឡោះបណ្ដោយឱ្យ)ការពិតទៅតាមចំណង់របស់ពួកគេនោះ មេឃជាច្រើនជាន់ និងផែនដី ហើយនិងអ្វីៗដែលមាននៅក្នុងនោះ ពិតជាត្រូវវិនាសអន្តរាយជាមិនខាន។ ផ្ទុយទៅវិញ យើងបានផ្ដល់ឱ្យពួកគេនូវកិត្តិយសដ៏ថ្លៃថ្នូរសម្រាប់ពួកគេ តែពួកគេបែរជាងាកចេញពីកិត្តិយសដ៏ថ្លៃថ្នូរនោះទៅវិញ។

أَمۡ تَسۡـَٔلُهُمۡ خَرۡجٗا فَخَرَاجُ رَبِّكَ خَيۡرٞۖ وَهُوَ خَيۡرُ ٱلرَّٰزِقِينَ ٧٢

៧២-ឬមួយក៏អ្នក(មូហាំម៉ាត់)សុំពួកគេឱ្យផ្ដល់ថ្លៃឈ្នួលដល់អ្នក? ដូច្នេះ ការតបស្នងនៃម្ចាស់របស់អ្នកគឺល្អប្រសើរជាង។ ហើយទ្រង់ជាអ្នកប្រទានលាភសក្ការៈដ៏ល្អប្រសើរបំផុត។

وَإِنَّكَ لَتَدۡعُوهُمۡ إِلَىٰ صِرَٰطٖ مُّسۡتَقِيمٖ ٧٣

៧៣-ហើយពិតប្រាកដណាស់ អ្នកគឺជាអ្នកអំពាវនាវពួកគេឱ្យទៅរកមាគ៌ាដែលត្រឹមត្រូវ(សាសនាអ៊ីស្លាម)។

وَإِنَّ ٱلَّذِينَ لَا يُؤۡمِنُونَ بِٱلۡأٓخِرَةِ عَنِ ٱلصِّرَٰطِ لَنَٰكِبُونَ ٧٤

៧៤-ហើយពិតប្រាកដណាស់ ពួកដែលគ្មានជំនឿនឹងថ្ងៃបរលោក ពួកគេនឹងងាកចេញពីមាគ៌ាដែលត្រឹមត្រូវជាមិនខាន។

۞ وَلَوۡ رَحِمۡنَٰهُمۡ وَكَشَفۡنَا مَا بِهِم مِّن ضُرّٖ

៧៥-ហើយប្រសិនបើយើងអាណិតអាសូរដល់ពួកគេ និងលុបបំបាត់អ្វីដែលកើតឡើងចំពោះពួកគេអំពីគ្រោះថ្នាក់(គ្រោះរាំងស្ងួត

لَّلَجُّواْ فِي طُغۡيَٰنِهِمۡ يَعۡمَهُونَ ٧٥

និងភាពអត់ឃ្លាន) នោះ ច្បាស់ជាពួកគេនៅតែស្ថិតក្នុងភាពវង្វេងរបស់ពួកគេ ដោយស្រពេចស្រពិលដដែល ។

وَلَقَدۡ أَخَذۡنَٰهُم بِٱلۡعَذَابِ فَمَا ٱسۡتَكَانُواْ لِرَبِّهِمۡ وَمَا يَتَضَرَّعُونَ ٧٦

៧៦-ហើយជាការពិតណាស់ យើងបានសាកល្បងពួកគេដោយការដាក់ទណ្ឌកម្ម(នៅក្នុងលោកិយ) តែពួកគេនៅតែមិនព្រមបន្ទាបខ្លួន និងមិនទទូចបួងសួងសុំដោយឱនលំទោនចំពោះម្ចាស់របស់ពួកគេឡើយ ។

حَتَّىٰٓ إِذَا فَتَحۡنَا عَلَيۡهِم بَابٗا ذَا عَذَابٖ شَدِيدٍ إِذَا هُمۡ فِيهِ مُبۡلِسُونَ ٧٧

៧៧-លុះនៅពេលដែលយើងបើកទ្វារទារុណកម្មដ៏ធ្ងន់ធ្ងរឱ្យពួកគេ(នៅថ្ងៃបរលោក) ស្រាប់តែពួកគេអស់សង្ឃឹម សោកស្តាយចំពោះវាយ៉ាងខ្លាំង ។

وَهُوَ ٱلَّذِيٓ أَنشَأَ لَكُمُ ٱلسَّمۡعَ وَٱلۡأَبۡصَٰرَ وَٱلۡأَفۡـِٔدَةَۚ قَلِيلٗا مَّا تَشۡكُرُونَ ٧٨

៧៨-ហើយទ្រង់ជាអ្នកដែលបានបង្កើតឱ្យពួកអ្នកមានត្រចៀក និងភ្នែក ហើយនិងបេះដូង ។ បន្តិចបន្តួចបំផុតដែលពួកអ្នកដឹងគុណ ។

وَهُوَ ٱلَّذِي ذَرَأَكُمۡ فِي ٱلۡأَرۡضِ وَإِلَيۡهِ تُحۡشَرُونَ ٧٩

៧៩-ហើយទ្រង់ជាអ្នកដែលបង្កើតពួកអ្នកឱ្យមានជីវិតនៅលើផែនដី ហើយពួកអ្នកនឹងត្រូវគេប្រមូលផ្តុំទៅកាន់ទ្រង់វិញ(នៅថ្ងៃបរលោក) ។

وَهُوَ ٱلَّذِي يُحۡيِۦ وَيُمِيتُ وَلَهُ ٱخۡتِلَٰفُ ٱلَّيۡلِ وَٱلنَّهَارِۚ أَفَلَا تَعۡقِلُونَ ٨٠

៨០-ហើយទ្រង់ជាអ្នកដែលធ្វើឱ្យរស់ និងធ្វើឱ្យស្លាប់ ។ ហើយភាពខុសគ្នារវាងពេលថ្ងៃ និងពេលយប់គឺជាកម្មសិទ្ធិរបស់ទ្រង់ ។ តើពួកអ្នកមិនគិតពិចារណាទេឬ ?

بَلۡ قَالُواْ مِثۡلَ مَا قَالَ ٱلۡأَوَّلُونَ ٨١

៨១-ផ្ទុយទៅវិញ ពួកគេបែរជាបាននិយាយដូចអ្វី(សំដី)ដែលពួកជំនាន់មុនបាននិយាយដែរ ។

قَالُوٓاْ أَءِذَا مِتۡنَا وَكُنَّا تُرَابٗا وَعِظَٰمًا أَءِنَّا لَمَبۡعُوثُونَ ٨٢

៨២-ពួកគេបាននិយាយថា: តើនៅពេលដែលពួកយើងស្លាប់ ហើយបានក្លាយទៅជាដី និងឆ្អឹងទៅហើយនោះ តើពួកយើងពិតជានឹងត្រូវគេធ្វើឱ្យរស់ឡើងវិញឬ?

لَقَدۡ وُعِدۡنَا نَحۡنُ وَءَابَآؤُنَا هَٰذَا مِن قَبۡلُ إِنۡ هَٰذَآ إِلَّآ أَسَٰطِيرُ ٱلۡأَوَّلِينَ ٨٣

៨៣-ហើយជាការពិតណាស់ ពួកយើងនិងជីដូនជីតារបស់ពួកយើងត្រូវបានគេសន្យាចំពោះរឿងនេះ(ការធ្វើឱ្យរស់ឡើងវិញ) តាំងពីមុនមកម្ល៉េះ ។ រឿងនេះគ្មានអ្វីក្រៅពីជារឿងព្រេងនិទានរបស់អ្នកជំនាន់មុននោះឡើយ ។

قُل لِّمَنِ ٱلْأَرْضُ وَمَن فِيهَآ إِن كُنتُمْ تَعْلَمُونَ ﴿٨٤﴾

៨៤-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើផែនដី និងអ្វីៗដែលមាននៅលើវាជាកម្មសិទ្ធិរបស់អ្នកណា ប្រសិនបើពួកអ្នកបានដឹងមែននោះ?

سَيَقُولُونَ لِلَّهِ ۚ قُلْ أَفَلَا تَذَكَّرُونَ ﴿٨٥﴾

៨៥-ពួកគេនឹងឆ្លើយថា : វាជាកម្មសិទ្ធិរបស់អល់ឡោះតែមួយគត់ ។ ចូរអ្នកតបវិញថាៈ បើដូច្នេះ តើពួកអ្នកមិនភ្ញាក់រលឹកទេឬ?

قُلْ مَن رَّبُّ ٱلسَّمَٰوَٰتِ ٱلسَّبْعِ وَرَبُّ ٱلْعَرْشِ ٱلْعَظِيمِ ﴿٨٦﴾

៨៦-ចូរអ្នកពោលទៀតថាៈ តើអ្នកណាជាម្ចាស់គ្រប់គ្រងនៃមេឃទាំងប្រាំពីរជាន់ និងជាម្ចាស់នៃអារ៉ស្ហដ៏ធំធេងនោះ?

سَيَقُولُونَ لِلَّهِ ۚ قُلْ أَفَلَا تَتَّقُونَ ﴿٨٧﴾

៨៧-ពួកគេនឹងឆ្លើយថា : ជាកម្មសិទ្ធិរបស់អល់ឡោះតែមួយគត់ ។ ចូរអ្នកតបវិញថាៈ បើដូច្នោះ តើពួកអ្នកមិនកោតខ្លាចអល់ឡោះទេឬ?

قُلْ مَنۢ بِيَدِهِۦ مَلَكُوتُ كُلِّ شَىْءٍ وَهُوَ يُجِيرُ وَلَا يُجَارُ عَلَيْهِ إِن كُنتُمْ تَعْلَمُونَ ﴿٨٨﴾

៨៨-ចូរអ្នកពោលទៀតថាៈ តើអ្នកណាគឺជាអ្នកគ្រប់គ្រងអ្វីៗទាំងអស់ដោយដៃរបស់គេ ហើយគេជាអ្នកការពារ(អ្វីៗទាំងអស់) និងគ្មាននរណាអាចការពារ(ពីទារុណកម្មរបស់គេ)បាន ប្រសិនបើពួកអ្នកបានដឹងមែននោះ?

سَيَقُولُونَ لِلَّهِ ۚ قُلْ فَأَنَّىٰ تُسْحَرُونَ ﴿٨٩﴾

៨៩-ពួកគេនឹងឆ្លើយថាៈ ជាកម្មសិទ្ធិរបស់អល់ឡោះតែមួយគត់ ។ ចូរអ្នកតបថាៈ ដូច្នេះតើពួកអ្នកត្រូវគេបោកបញ្ឆោត(ឱ្យងាកចេញពីការពិត)បានយ៉ាងដូចម្ដេច ?

بَلْ أَتَيْنَٰهُم بِٱلْحَقِّ وَإِنَّهُمْ لَكَٰذِبُونَ ﴿٩٠﴾

៩០-ផ្ទុយទៅវិញ យើងបានផ្ដល់ឱ្យពួកគេនូវការពិត ហើយពិតប្រាកដណាស់ ពួកគេគឺជាពួកដែលភូតកុហក ។

مَا ٱتَّخَذَ ٱللَّهُ مِن وَلَدٍ وَمَا كَانَ مَعَهُۥ مِنْ إِلَٰهٍ ۚ إِذًا لَّذَهَبَ كُلُّ إِلَٰهٍۭ بِمَا خَلَقَ وَلَعَلَا بَعْضُهُمْ عَلَىٰ بَعْضٍ ۚ سُبْحَٰنَ ٱللَّهِ عَمَّا يَصِفُونَ ﴿٩١﴾

៩១-អល់ឡោះពុំមានបុត្រឡើយ ហើយក៏ពុំមានម្ចាស់ណាដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដរួមជាមួយនឹងទ្រង់ដែរ ។ ប្រសិនបើមានមែន ម្ចាស់នីមួយៗពិតជានាំយកទៅគ្រប់គ្រងនូវអ្វីដែលគេបានបង្កើត ហើយពួកគេនឹងយកប្រៀបលើគ្នាទៅវិញទៅមក(ក្នុងការគ្រប់គ្រង) ។ អល់ឡោះមហាស្អាតស្អំអំពីអ្វីដែលពួកគេនិយាយប្រឌិតនោះ ។

عَٰلِمِ ٱلْغَيْبِ وَٱلشَّهَٰدَةِ فَتَعَٰلَىٰ عَمَّا

៩២-ទ្រង់ជាអ្នកដឹងពីប្រការអាថ៌កំបាំងនិងប្រការលាតត្រដាង ។ ហើយទ្រង់ខ្ពង់ខ្ពស់បំផុតអំពីអ្វីដែលពួកគេប្រព្រឹត្តស្ហ៊ីរិក ។

يُشۡرِكُونَ ﴿٩٢﴾

قُل رَّبِّ إِمَّا تُرِيَنِّي مَا يُوعَدُونَ ﴿٩٣﴾

៩៣-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ឱម្ចាស់របស់ខ្ញុំ! ប្រសិនបើទ្រង់ពិតជាបង្ហាញឱ្យខ្ញុំឃើញនូវអ្វី(ទារុណកម្ម)ដែលពួកគេត្រូវគេសន្យាមែននោះ។

رَبِّ فَلَا تَجۡعَلۡنِي فِي ٱلۡقَوۡمِ ٱلظَّٰلِمِينَ ﴿٩٤﴾

៩៤-ឱម្ចាស់របស់ខ្ញុំ! ដូច្នេះ សូមទ្រង់មេត្តាកុំធ្វើឱ្យខ្ញុំស្ថិតក្នុងចំណោមពួកដែលបំពានអ្វី។

وَإِنَّا عَلَىٰٓ أَن نُّرِيَكَ مَا نَعِدُهُمۡ لَقَٰدِرُونَ ﴿٩٥﴾

៩៥-ហើយពិតប្រាកដណាស់ យើងគឺជាអ្នកមានសមត្ថភាពក្នុងការបង្ហាញអ្នក(មូហាំម៉ាត់)នូវអ្វី(ទារុណកម្ម)ដែលយើងសន្យានឹងពួកគេ។

ٱدۡفَعۡ بِٱلَّتِي هِيَ أَحۡسَنُ ٱلسَّيِّئَةَۚ نَحۡنُ أَعۡلَمُ
بِمَا يَصِفُونَ ﴿٩٦﴾

៩៦-ចូរអ្នក(មូហាំម៉ាត់)រុញច្រានប្រការអាក្រក់ដោយអ្វីដែលជាប្រការល្អបំផុត។ យើងដឹងបំផុតនូវអ្វីដែលពួកគេប្រឌិតឡើង។

وَقُل رَّبِّ أَعُوذُ بِكَ مِنۡ هَمَزَٰتِ
ٱلشَّيَٰطِينِ ﴿٩٧﴾

៩៧-ហើយចូរអ្នកពោលទៀតថាៈ ឱម្ចាស់របស់ខ្ញុំ! ខ្ញុំសុំពីទ្រង់ឱ្យបញ្ចៀសខ្ញុំពីការពង្វក់របស់ស្ទៃតនផង។

وَأَعُوذُ بِكَ رَبِّ أَن يَحۡضُرُونِ ﴿٩٨﴾

៩៨-ឱម្ចាស់របស់ខ្ញុំ! ខ្ញុំសុំពីទ្រង់ឱ្យបញ្ចៀសខ្ញុំពីវត្តមានរបស់ពួកគេមកក្បែរខ្ញុំផង។

حَتَّىٰٓ إِذَا جَآءَ أَحَدَهُمُ ٱلۡمَوۡتُ قَالَ رَبِّ
ٱرۡجِعُونِ ﴿٩٩﴾

៩៩-លុះនៅពេលដែលសេចក្តីស្លាប់បានមកដល់នរណាម្នាក់ក្នុងចំណោមពួកគេ(ពួកមូស្រីគីន) គេបាននិយាយថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាឱ្យខ្ញុំត្រឡប់ទៅ(លោកិយ)វិញម្តងទៀតផង។

لَعَلِّيٓ أَعۡمَلُ صَٰلِحٗا فِيمَا تَرَكۡتُۚ كَلَّآۚ إِنَّهَا
كَلِمَةٌ هُوَ قَآئِلُهَاۖ وَمِن وَرَآئِهِم بَرۡزَخٌ إِلَىٰ يَوۡمِ
يُبۡعَثُونَ ﴿١٠٠﴾

១០០-ដើម្បីខ្ញុំនឹងសាងអំពើល្អចំពោះអ្វីដែលខ្ញុំបានបោះបង់ចោលកន្លងមក។ មិនដូច្នោះទេ! ពិតប្រាកដណាស់ វាគ្រាន់តែជាពាក្យសំដីដែលគេនិយាយទទេៗតែប៉ុណ្ណោះ។ ហើយនៅខាងមុខពួកគេមានជញ្ជាំង(ឃាំងពួកគេមិនឱ្យត្រឡប់ទៅលោកិយវិញ) រហូតដល់ថ្ងៃដែលពួកគេត្រូវគេធ្វើឱ្យរស់ឡើងវិញ។

فَإِذَا نُفِخَ فِي ٱلصُّورِ فَلَآ أَنسَابَ بَيۡنَهُمۡ
يَوۡمَئِذٖ وَلَا يَتَسَآءَلُونَ ﴿١٠١﴾

១០១-ហើយនៅពេលដែលគេផ្លុំត្រែ(នៅថ្ងៃបរលោក)គឺគ្មានសាច់សាលោហិតរវាងពួកគេទៀតទេនៅថ្ងៃនោះ ហើយពួកគេក៏គ្មានការសួរគ្នាដែរ។

فَمَن ثَقُلَتۡ مَوَٰزِينُهُۥ فَأُوْلَٰٓئِكَ هُمُ ٱلۡمُفۡلِحُونَ ﴿١٠٢﴾

១០២-ហើយអ្នកណាដែលភ្នែកជញ្ជីង(នៃអំពើល្អ)របស់គេធ្ងន់នោះ អ្នកទាំងនោះគឺជាអ្នកដែលជោគជ័យ(ឋានសួគ៌)។

وَمَنۡ خَفَّتۡ مَوَٰزِينُهُۥ فَأُوْلَٰٓئِكَ ٱلَّذِينَ خَسِرُوٓاْ أَنفُسَهُمۡ فِي جَهَنَّمَ خَٰلِدُونَ ﴿١٠٣﴾

១០៣-តែអ្នកណាដែលភ្នែកជញ្ជីង(នៃអំពើល្អ)របស់គេស្រាលវិញនោះ ពួកទាំងនោះគឺជាពួកដែលបានខាតបង់ខ្លួនឯង ដោយពួកគេស្ថិតនៅក្នុងនរកជើហាន់ណាំជាអមតៈ។

تَلۡفَحُ وُجُوهَهُمُ ٱلنَّارُ وَهُمۡ فِيهَا كَٰلِحُونَ ﴿١٠٤﴾

១០៤-ភ្លើងនរកឆាបឆេះមុខរបស់ពួកគេ ហើយពួកគេរួញក្រញង់នៅក្នុងនោះ។

أَلَمۡ تَكُنۡ ءَايَٰتِي تُتۡلَىٰ عَلَيۡكُمۡ فَكُنتُم بِهَا تُكَذِّبُونَ ﴿١٠٥﴾

១០៥-(អល់ឡោះមានបន្ទូលទៅកាន់ពួកគេនៅថ្ងៃនោះថា) តើគេមិនបានសូត្រអាយ៉ាត់ៗរបស់យើងឱ្យពួកអ្នកស្ដាប់ ហើយពួកអ្នកធ្លាប់បានបដិសេធនឹងវាទេឬ?

قَالُواْ رَبَّنَا غَلَبَتۡ عَلَيۡنَا شِقۡوَتُنَا وَكُنَّا قَوۡمٗا ضَآلِّينَ ﴿١٠٦﴾

១០៦-ពួកគេបានតបវិញថាៈ ឱម្ចាស់របស់ពួកយើង! ចំណង់ចិត្តរបស់ពួកយើងបានគ្របដណ្ដប់លើពួកយើង។ ហើយពួកយើងក៏បានក្លាយជាក្រុមដែលវង្វេងដែរ។

رَبَّنَآ أَخۡرِجۡنَا مِنۡهَا فَإِنۡ عُدۡنَا فَإِنَّا ظَٰلِمُونَ ﴿١٠٧﴾

១០៧-ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្ដាបញ្ចេញពួកយើងពីនរកផង (ហើយឱ្យពួកយើងវិលទៅរស់នៅក្នុងលោកិយម្ដងទៀតដើម្បីសាងអំពើល្អផង)។ ហើយប្រសិនបើពួកយើងវិលត្រលប់ទៅ(រកភាពវង្វេង)ម្ដងទៀតនោះ ពួកយើងពិតជាពួកដែលបំពានជាមិនខាន។

قَالَ ٱخۡسَـُٔواْ فِيهَا وَلَا تُكَلِّمُونِ ﴿١٠٨﴾

១០៨-ទ្រង់បានមានបន្ទូលថាៈ ចូរពួកអ្នកនៅក្នុងនរកទាំងវេទនាចុះ ហើយពួកអ្នកកុំនិយាយជាមួយយើងទៀតឱ្យសោះ។

إِنَّهُۥ كَانَ فَرِيقٞ مِّنۡ عِبَادِي يَقُولُونَ رَبَّنَآ ءَامَنَّا فَٱغۡفِرۡ لَنَا وَٱرۡحَمۡنَا وَأَنتَ خَيۡرُ ٱلرَّٰحِمِينَ ﴿١٠٩﴾

១០៩-ពិតប្រាកដណាស់មានមួយក្រុមក្នុងចំណោមខ្ញុំរបស់យើងបួងសួងសុំថាៈ ឱម្ចាស់របស់ពួកយើង! ពួកយើងមានជំនឿហើយដូច្នេះសូមទ្រង់មេត្ដាអភ័យទោស និងអាណិតស្រឡាញ់ពួកយើងផង ព្រោះទ្រង់គឺជាអ្នកដែលអាណិតស្រឡាញ់ដ៏ប្រសើរបំផុត។

فَٱتَّخَذۡتُمُوهُمۡ سِخۡرِيًّا حَتَّىٰٓ أَنسَوۡكُمۡ ذِكۡرِي

១១០-ហើយពួកអ្នក(ពួកមូស្ហរីគីន)បានប្រមាថមើលងាយពួកគេ(អ្នកមានជំនឿ) រហូតធ្វើឱ្យពួកអ្នកភ្លេចនូវការរំលឹកមកចំពោះ

وَكُنتُم مِّنْهُمْ تَضْحَكُونَ ١١٠

إِنِّي جَزَيْتُهُمُ ٱلْيَوْمَ بِمَا صَبَرُوٓا۟ أَنَّهُمْ هُمُ ٱلْفَآئِزُونَ ١١١

قَٰلَ كَمْ لَبِثْتُمْ فِى ٱلْأَرْضِ عَدَدَ سِنِينَ ١١٢

قَالُوا۟ لَبِثْنَا يَوْمًا أَوْ بَعْضَ يَوْمٍ فَسْـَٔلِ ٱلْعَآدِّينَ ١١٣

قَٰلَ إِن لَّبِثْتُمْ إِلَّا قَلِيلًا ۖ لَّوْ أَنَّكُمْ كُنتُمْ تَعْلَمُونَ ١١٤

أَفَحَسِبْتُمْ أَنَّمَا خَلَقْنَٰكُمْ عَبَثًا وَأَنَّكُمْ إِلَيْنَا لَا تُرْجَعُونَ ١١٥

فَتَعَٰلَى ٱللَّهُ ٱلْمَلِكُ ٱلْحَقُّ ۖ لَآ إِلَٰهَ إِلَّا هُوَ رَبُّ ٱلْعَرْشِ ٱلْكَرِيمِ ١١٦

وَمَن يَدْعُ مَعَ ٱللَّهِ إِلَٰهًا ءَاخَرَ لَا بُرْهَٰنَ لَهُۥ بِهِۦ فَإِنَّمَا حِسَابُهُۥ عِندَ رَبِّهِۦٓ ۚ إِنَّهُۥ لَا يُفْلِحُ ٱلْكَٰفِرُونَ ١١٧

وَقُل رَّبِّ ٱغْفِرْ وَٱرْحَمْ وَأَنتَ خَيْرُ ٱلرَّٰحِمِينَ ١١٨

យើង។ ហើយពួកអ្នកបានសើចចំអកឡកឡឺយដាក់ពួកគេ។

១១១-ពិតប្រាកដណាស់ យើងបានតបស្នងឱ្យពួកគេនៅថ្ងៃនេះ (ថ្ងៃបរលោក) ដោយសារតែអ្វីដែលពួកគេបានអត់ធ្មត់កន្លងមក ពិតប្រាកដណាស់ពួកគេគឺជាអ្នកដែលជោគជ័យ។

១១២-ទ្រង់បានមានបន្ទូលថា: តើពួកអ្នកបានរស់នៅលើផែនដីរយៈពេលប៉ុន្មានឆ្នាំហើយ?

១១៣-ពួកគេឆ្លើយថា: ពួកយើងបានរស់នៅតែមួយថ្ងៃ ឬកន្លះថ្ងៃប៉ុណ្ណោះ ដូច្នេះសូមទ្រង់មេត្តាសួរអ្នកដែលចេះគណនា(ពីថ្ងៃខែ) ទៅ។

១១៤-ទ្រង់បានមានបន្ទូលថា: ពួកអ្នកមិនបានរស់នៅ(លើលោកិយ)ឡើយ លើកលែងតែមួយរយៈពេលខ្លីប៉ុណ្ណោះ ប្រសិនបើពួកអ្នកពិតជាបានដឹងមែននោះ។

១១៥-តើពួកអ្នកគិតថា: យើងបានបង្កើតពួកអ្នកគ្រាន់តែជាការលេងសើច ហើយពួកអ្នកពិតជាមិនត្រូវគេឱ្យវិលត្រឡប់មកជួបយើងវិញ(ដើម្បីជំនុំជំរះ)ទេឬ?

១១៦-ហើយអល់ឡោះដែលជាស្តេចដ៏ពិតប្រាកដ មហាខ្ពង់ខ្ពស់។ គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ដែលជាម្ចាស់នៃអារ៉ស្ហដ៏ថ្កុំថ្កើងឡើយ។

១១៧-អ្នកណាហើយគោរពសក្ការៈម្ចាស់ផ្សេងរួមជាមួយអល់ឡោះដែលគ្មានភស្តុតាងបញ្ជាក់សម្រាប់គេចំពោះការគោរពនោះ ពិតប្រាកដណាស់ ការទូរទាត់(ទង្វើអាក្រក់)របស់គេគឺស្ថិតនៅលើម្ចាស់របស់គេ។ ពិតប្រាកដណាស់ ពួកដែលប្រឆាំងនោះពុំមានជ័យជំនះឡើយ។

១១៨-ហើយចូរអ្នក(មូហាំម៉ាត់)បួងសួងសុំថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាអភ័យទោស និងអាណិតស្រឡាញ់ដល់ខ្ញុំផង។ ហើយទ្រង់គឺជាអ្នកដែលអាណិតស្រឡាញ់ដ៏ប្រសើរបំផុត។

## ជំពូកអាន់នួរ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-នេះគឺជាជំពូកមួយដែលយើងបានបញ្ចុះវា ហើយយើងបានដាក់កាតព្វកិច្ចវា ព្រមទាំងយើងបានបញ្ចុះអាយ៉ាត់ៗយ៉ាងជាក់ច្បាស់នៅក្នុងវាដើម្បីឱ្យពួកអ្នកចងចាំ ។

២-ស្ត្រីនិងបុរសដែលហ្ស៊ីណានោះ ចូរពួកអ្នកពិន័យគេក្នុងម្នាក់ៗមួយរយរំពាត់ ។ ហើយពួកអ្នកមិនត្រូវអាណិតអាសូរដល់គេទាំងពីរក្នុង(ការអនុវត្តន៍ច្បាប់)សាសនារបស់អល់ឡោះឡើយ ប្រសិនបើពួកអ្នកមានជំនឿលើអល់ឡោះ និងថ្ងៃបរលោកមែននោះ ។ ហើយចូរឱ្យមួយក្រុមនៃបណ្តាអ្នកដែលមានជំនឿធ្វើជាសាក្សីលើការដាក់ទណ្ឌកម្មចំពោះគេទាំងពីរ ។

៣-បុរសដែលហ្ស៊ីណាគេមិនត្រូវរៀបអាពាហ៍ពិពាហ៍ជាមួយស្ត្រីណាក្រៅពីស្ត្រីហ្ស៊ីណាដូចគ្នា ឬស្ត្រីមូស្ហ្ទីគីននោះឡើយ ។ ហើយស្ត្រីហ្ស៊ីណាគឺគ្មានបុរសណារៀបអាពាហ៍ពិពាហ៍ជាមួយនាងក្រៅពីបុរសហ្ស៊ីណា ឬបុរសមូស្ហ្ទីគីននោះឡើយ ។ ហើយការរៀបអាពាហ៍ពិ-ពាហ៍នោះត្រូវបានគេហាមឃាត់ទៅលើបណ្តាអ្នកដែលមានជំនឿ ។

៤-ហើយពួកដែលចោទប្រកាន់ស្ត្រីដែលល្អបរិសុទ្ធ(ថាបានហ្ស៊ីណា) បន្ទាប់មកពួកគេមិនបាននាំមកនូវសាក្សីបុរសចំនួនបួននាក់ទេនោះ ចូរពួកអ្នកពិន័យពួកគេចំនួនប៉ែតសិបរំពាត់ ហើយពួកអ្នកមិនត្រូវទទួលពួកគេ(ពួកចោទប្រកាន់គេ)ធ្វើជាសាក្សីជាដាច់ខាត ។ ហើយពួកទាំងនោះគឺជាពួកដែលល្មើសនឹងច្បាប់អល់ឡោះ ។

៥-លើកលែងតែពួកដែលបានសារភាពកំហុសបន្ទាប់ពីនោះ ហើយបានកែខ្លួនវិញ ពិតប្រាកដណាស់អល់ឡោះ មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

៦-ហើយពួកដែលចោទប្រកាន់ភរិយារបស់ពួកគេ(ថាបានហ្ស៊ីណា) តែពួកគេគ្មានសាក្សីណាក្រៅពីខ្លួនឯងនោះ ចូរឱ្យពួកគេម្នាក់ៗស្បថនឹងអល់ឡោះចំនួនបួនដងថា: ប្រាកដណាស់ គេពិតជា

## سورة النور

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

سُورَةٌ أَنزَلْنَٰهَا وَفَرَضْنَٰهَا وَأَنزَلْنَا فِيهَآ ءَايَٰتٍۭ بَيِّنَٰتٍ لَّعَلَّكُمْ تَذَكَّرُونَ ﴿١﴾

ٱلزَّانِيَةُ وَٱلزَّانِى فَٱجْلِدُوا۟ كُلَّ وَٰحِدٍ مِّنْهُمَا مِا۟ئَةَ جَلْدَةٍ ۖ وَلَا تَأْخُذْكُم بِهِمَا رَأْفَةٌ فِى دِينِ ٱللَّهِ إِن كُنتُمْ تُؤْمِنُونَ بِٱللَّهِ وَٱلْيَوْمِ ٱلْءَاخِرِ ۖ وَلْيَشْهَدْ عَذَابَهُمَا طَآئِفَةٌ مِّنَ ٱلْمُؤْمِنِينَ ﴿٢﴾

ٱلزَّانِى لَا يَنكِحُ إِلَّا زَانِيَةً أَوْ مُشْرِكَةً وَٱلزَّانِيَةُ لَا يَنكِحُهَآ إِلَّا زَانٍ أَوْ مُشْرِكٌ ۚ وَحُرِّمَ ذَٰلِكَ عَلَى ٱلْمُؤْمِنِينَ ﴿٣﴾

وَٱلَّذِينَ يَرْمُونَ ٱلْمُحْصَنَٰتِ ثُمَّ لَمْ يَأْتُوا۟ بِأَرْبَعَةِ شُهَدَآءَ فَٱجْلِدُوهُمْ ثَمَٰنِينَ جَلْدَةً وَلَا تَقْبَلُوا۟ لَهُمْ شَهَٰدَةً أَبَدًا ۚ وَأُو۟لَٰٓئِكَ هُمُ ٱلْفَٰسِقُونَ ﴿٤﴾

إِلَّا ٱلَّذِينَ تَابُوا۟ مِنۢ بَعْدِ ذَٰلِكَ وَأَصْلَحُوا۟ فَإِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ ﴿٥﴾

وَٱلَّذِينَ يَرْمُونَ أَزْوَٰجَهُمْ وَلَمْ يَكُن لَّهُمْ شُهَدَآءُ إِلَّآ أَنفُسُهُمْ فَشَهَٰدَةُ أَحَدِهِمْ أَرْبَعُ

شَهَـٰدَٰتٍۭ بِٱللَّهِ ۙ إِنَّهُۥ لَمِنَ ٱلصَّـٰدِقِينَ ﴿٦﴾
وَٱلْخَـٰمِسَةُ أَنَّ لَعْنَتَ ٱللَّهِ عَلَيْهِ إِن كَانَ مِنَ
ٱلْكَـٰذِبِينَ ﴿٧﴾

وَيَدْرَؤُا۟ عَنْهَا ٱلْعَذَابَ أَن تَشْهَدَ أَرْبَعَ
شَهَـٰدَٰتٍۭ بِٱللَّهِ ۙ إِنَّهُۥ لَمِنَ ٱلْكَـٰذِبِينَ ﴿٨﴾

وَٱلْخَـٰمِسَةَ أَنَّ غَضَبَ ٱللَّهِ عَلَيْهَآ إِن كَانَ مِنَ
ٱلصَّـٰدِقِينَ ﴿٩﴾

وَلَوْلَا فَضْلُ ٱللَّهِ عَلَيْكُمْ وَرَحْمَتُهُۥ وَأَنَّ ٱللَّهَ
تَوَّابٌ حَكِيمٌ ﴿١٠﴾

إِنَّ ٱلَّذِينَ جَآءُو بِٱلْإِفْكِ عُصْبَةٌ مِّنكُمْ ۚ لَا
تَحْسَبُوهُ شَرًّا لَّكُم ۖ بَلْ هُوَ خَيْرٌ لَّكُمْ ۚ لِكُلِّ
ٱمْرِئٍ مِّنْهُم مَّا ٱكْتَسَبَ مِنَ ٱلْإِثْمِ ۚ وَٱلَّذِى
تَوَلَّىٰ كِبْرَهُۥ مِنْهُمْ لَهُۥ عَذَابٌ عَظِيمٌ ﴿١١﴾

لَّوْلَآ إِذْ سَمِعْتُمُوهُ ظَنَّ ٱلْمُؤْمِنُونَ وَٱلْمُؤْمِنَـٰتُ
بِأَنفُسِهِمْ خَيْرًا وَقَالُوا۟ هَـٰذَآ إِفْكٌ مُّبِينٌ ﴿١٢﴾

لَّوْلَا جَآءُو عَلَيْهِ بِأَرْبَعَةِ شُهَدَآءَ ۚ فَإِذْ لَمْ
يَأْتُوا۟ بِٱلشُّهَدَآءِ فَأُو۟لَـٰٓئِكَ عِندَ ٱللَّهِ هُمُ

ស្ថិតក្នុងចំណោមអ្នកដែលនិយាយត្រឹមត្រូវ ។

៧-ហើយត្រូវឱ្យគេស្បថជាលើកទីប្រាំថាៈ សូមឱ្យបណ្តាសារបស់អល់ឡោះធ្លាក់មកលើខ្លួនគេ ប្រសិនបើគេស្ថិតក្នុងចំណោមអ្នកដែលភូតកុហកមែននោះ ។

៨-ហើយត្រូវឱ្យគេការពារនាងពីទណ្ឌកម្ម( គប់នឹងដុំថ្មរហូតស្លាប់) ដោយឱ្យនាងធ្វើជាសាក្សីស្បថនឹងអល់ឡោះចំនួនបួនដងថាៈ ពិតណាស់គេ( ប្ដី) ពិតជាស្ថិតក្នុងចំណោមអ្នកដែលភូតកុហក ។

៩-ហើយត្រូវឱ្យនាងស្បថជាលើកទីប្រាំថាៈ សូមឱ្យការខឹងរបស់អល់ឡោះធ្លាក់ទៅលើនាង ប្រសិនបើគេ( ប្ដី) ស្ថិតក្នុងចំណោមអ្នកដែលនិយាយត្រឹមត្រូវ ។

១០-ហើយប្រសិនបើគ្មានការប្រោសប្រទានរបស់អល់ឡោះនិងក្តីមេត្តាករុណារបស់ទ្រង់ចំពោះពួកអ្នកទេនោះ( ទ្រង់នឹងដាក់ទណ្ឌកម្មភ្លាម) ។ ហើយពិតប្រាកដណាស់ អល់ឡោះជាអ្នកដែលទទួលយកការសារភាពកំហុស មហាគតិបណ្ឌិត ។

១១-ពិតប្រាកដណាស់ ពួកដែលបាននាំមកនូវការមួលបង្កាច់ក្នុងរឿងអាស្រូវនេះ គឺជាក្រុមមួយដែលនៅក្នុងចំណោមពួកអ្នកនេះឯង ។ ចូរពួកអ្នកកុំគិតថា វាជាប្រការអាក្រក់សម្រាប់ពួកអ្នក តាមពិតវាគឺជាប្រការល្អសម្រាប់ពួកអ្នកទៅវិញទេ ។ សម្រាប់បុគ្គលគ្រប់រូបក្នុងចំណោមពួកគេនឹងត្រូវទទួលបាបកម្មទៅតាមអ្វីដែលគេបានប្រព្រឹត្ត ។ ហើយអ្នកដែលនៅក្នុងចំណោមពួកគេដែលបានបំផុសបំផុល( ការមួលបង្កាច់) ឱ្យទៅជារឿងធំនោះ គេនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរ ។

១២-ហេតុអ្វីបានជានៅពេលដែលពួកអ្នកបានឮវា( ការចោទប្រកាន់) បណ្តាអ្នកដែលមានជំនឿប្រុសស្រីមិនគិតល្អសម្រាប់ខ្លួនឯង ហើយនិយាយថាៈ នេះគឺជាការភូតកុហកយ៉ាងពិតប្រាកដនោះ?

១៣-ហេតុអ្វីបានជាពួកគេមិននាំសាក្សីចំនួនបួននាក់ចំពោះរឿងចោទប្រកាន់នោះមក? តែប្រសិនបើពួកគេមិនបាននាំសាក្សីទាំង

ٱلْكَـٰذِبُونَ ﴿١٣﴾

នោះមកទេ ពួកទាំងនោះគឺជាពួកដែលភូតកុហកចំពោះអល់ឡោះ ។

وَلَوْلَا فَضْلُ ٱللَّهِ عَلَيْكُمْ وَرَحْمَتُهُۥ فِى ٱلدُّنْيَا
وَٱلْـَٔاخِرَةِ لَمَسَّكُمْ فِى مَآ أَفَضْتُمْ فِيهِ عَذَابٌ
عَظِيمٌ ﴿١٤﴾

១៤-ហើយប្រសិនបើគ្មានការប្រោសប្រទានរបស់អល់ឡោះ និងក្ដីមេត្ដាករុណារបស់ទ្រង់ចំពោះពួកអ្នកនៅក្នុងលោកិយ និងថ្ងៃបរលោកទេនោះ ច្បាស់ជាទារុណកម្មដ៏ធ្ងន់ធ្ងរនឹងធ្លាក់លើពួកអ្នកចំពោះអ្វីដែលពួកអ្នកបាននិយាយមួលបង្កាច់នោះជាមិនខាន ។

إِذْ تَلَقَّوْنَهُۥ بِأَلْسِنَتِكُمْ وَتَقُولُونَ بِأَفْوَاهِكُم مَّا
لَيْسَ لَكُم بِهِۦ عِلْمٌ وَتَحْسَبُونَهُۥ هَيِّنًا وَهُوَ
عِندَ ٱللَّهِ عَظِيمٌ ﴿١٥﴾

១៥-នៅពេលដែលពួកអ្នកបាននិយាយផ្សព្វផ្សាយវា( ការមួលបង្កាច់) តៗគ្នាដោយអណ្ដាតរបស់ពួកអ្នក ហើយពួកអ្នកនិយាយចេញពីមាត់របស់ពួកអ្នកនូវអ្វីដែលពួកអ្នកមិនបានដឹងច្បាស់ពីវា ។ ហើយពួកអ្នកគិតថា វាជារឿងតូចតាច ខណៈដែលវាគឺជារឿងធំបំផុតចំពោះអល់ឡោះ ។

وَلَوْلَآ إِذْ سَمِعْتُمُوهُ قُلْتُم مَّا يَكُونُ لَنَآ
أَن نَّتَكَلَّمَ بِهَـٰذَا سُبْحَـٰنَكَ هَـٰذَا بُهْتَـٰنٌ
عَظِيمٌ ﴿١٦﴾

១៦-ហើយហេតុអ្វីបានជានៅពេលដែលពួកអ្នកបានឮវា ពួកអ្នកមិនបាននិយាយថាៈ ពួកយើងមិនគប្បីនិយាយរឿងនេះតៗគ្នាទេនោះ? អល់ឡោះមហាស្អាតស្អំ! នេះគឺជាការមួលបង្កាច់មួយយ៉ាងធំបំផុត ។

يَعِظُكُمُ ٱللَّهُ أَن تَعُودُوا۟ لِمِثْلِهِۦٓ أَبَدًا إِن كُنتُم
مُّؤْمِنِينَ ﴿١٧﴾

១៧-អល់ឡោះទូន្មានពួកអ្នកកុំឱ្យត្រឡប់មកធ្វើដូច្នេះម្ដងទៀតជាដាច់ខាត ប្រសិនបើពួកអ្នកជាអ្នកមានជំនឿ ។

وَيُبَيِّنُ ٱللَّهُ لَكُمُ ٱلْـَٔايَـٰتِ ۚ وَٱللَّهُ عَلِيمٌ
حَكِيمٌ ﴿١٨﴾

១៨-ហើយអល់ឡោះបញ្ជាក់នូវភស្តុតាងៗយ៉ាងច្បាស់ដល់ពួកអ្នក ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

إِنَّ ٱلَّذِينَ يُحِبُّونَ أَن تَشِيعَ ٱلْفَـٰحِشَةُ فِى
ٱلَّذِينَ ءَامَنُوا۟ لَهُمْ عَذَابٌ أَلِيمٌ فِى ٱلدُّنْيَا
وَٱلْـَٔاخِرَةِ ۚ وَٱللَّهُ يَعْلَمُ وَأَنتُمْ لَا تَعْلَمُونَ ﴿١٩﴾

១៩-ពិតប្រាកដណាស់ ពួកដែលចូលចិត្តចង់ឱ្យរឿងអាស្រូវលេចឮសុសសាយក្នុងចំណោមអ្នកដែលមានជំនឿនោះ ពួកគេនឹងត្រូវទទួលទារុណកម្មយ៉ាងឈឺចាប់ទាំងនៅក្នុងលោកិយនិងថ្ងៃបរ-លោក ។ ហើយអល់ឡោះដឹង តែពួកអ្នកដែលមិនដឹងឡើយ ។

وَلَوْلَا فَضْلُ ٱللَّهِ عَلَيْكُمْ وَرَحْمَتُهُۥ وَأَنَّ ٱللَّهَ
رَءُوفٌ رَّحِيمٌ ﴿٢٠﴾

២០-ហើយប្រសិនបើគ្មានការប្រោសប្រទានរបស់អល់ឡោះ និងក្ដីមេត្ដាករុណារបស់ទ្រង់ចំពោះពួកអ្នកទេនោះ ( ទ្រង់នឹងដាក់ទណ្ឌកម្មពួកអ្នកភ្លាមៗជាមិនខាន) ។ ហើយពិតប្រាកដណាស់ អល់ឡោះមហាមេត្ដាករុណា មហាអាណិតស្រឡាញ់ ។

២១-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំដើរតាមមាគ៌ារបស់ស្ហៃតន។ ហើយអ្នកណាដែលដើរតាមមាគ៌ារបស់ស្ហៃតន គឺពិតប្រាកដណាស់ វានឹងប្រើឱ្យប្រព្រឹត្តអំពើអសីលធម៌និងប្រការអាក្រក់ផ្សេងៗ។ ហើយប្រសិនបើគ្មានការប្រោសប្រទានរបស់អល់ឡោះនិងក្តីមេត្តាករុណារបស់ទ្រង់ទេនោះ គ្មានអ្នកណាម្នាក់ក្នុងចំណោមពួកអ្នកបានជ្រះស្អាត(ពីអំពើបាប)ឡើយ។ ប៉ុន្តែអល់ឡោះនឹងជម្រះ(បាបកម្ម)ចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយអល់ឡោះមហាឮ មហាដឹង។

២២-ហើយចូរកុំឱ្យអ្នកដែលមានកិត្តិយសថ្លៃថ្នូរនិងមានទ្រព្យសម្បត្តិស្តុកស្តម្ភក្នុងចំណោមពួកអ្នក(អ្នកមានជំនឿ)ស្បថថា: ឈប់បរិច្ចាគទានដល់បងប្អូនសាច់ញាតិ(របស់គេ) និងបណ្តាអ្នកក្រីក្រ ហើយនិងបណ្តាអ្នកភៀសខ្លួនក្នុងមាគ៌ាអល់ឡោះឱ្យសោះ។ ហើយចូរឱ្យពួកគេអភ័យទោស និងចេះអធ្យាស្រ័យឱ្យគ្នា។ តើពួកអ្នកមិនចូលចិត្តចង់ឱ្យអល់ឡោះអភ័យទោសដល់ពួកអ្នកទេឬ? ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

២៣-ពិតប្រាកដណាស់ ពួកដែលចោទប្រកាន់(អំពីរឿងហ្ស៊ីណាទៅលើ) ស្ត្រីៗដែលល្អបរិសុទ្ធដែលមិនធ្លាប់គិតផ្តេសផ្តាស និងមានជំនឿនោះ ពួកគេនឹងត្រូវបានគេដាក់បណ្តាសាទាំងក្នុងលោកិយ និងថ្ងៃបរលោក ហើយពួកគេនឹងទទួលទារុណកម្មយ៉ាងធ្ងន់ធ្ងរបំផុត។

២៤-នៅថ្ងៃ(បរលោក) អណ្តាតនិងដៃជើងរបស់ពួកគេនឹងធ្វើជាសាក្សីចំពោះអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត(នៅក្នុងលោកិយនេះ)។

២៥-នៅថ្ងៃនោះអល់ឡោះនឹងតបស្នងរាល់ការប្រព្រឹត្តរបស់ពួកគេមិនឱ្យខ្វះចន្លោះឡើយ។ ហើយពួកគេនឹងដឹងថា ពិតប្រាកដណាស់អល់ឡោះគឺជាអ្នកដែលយុត្តិធម៌ច្បាស់លាស់បំផុត។

២៦-ពួកស្ត្រីដែលប្រព្រឹត្តអំពើអាក្រក់គឺសម្រាប់ពួកបុរសដែលប្រព្រឹត្តអាក្រក់។ ហើយពួកបុរសដែលប្រព្រឹត្តអំពើអាក្រក់ គឺសម្រាប់ស្ត្រីដែលប្រព្រឹត្តអំពើអាក្រក់។ រីឯបណ្តាស្ត្រីដែលសាងអំពើល្អគឺសម្រាប់បុរសដែលសាងអំពើល្អ ហើយបុរសដែលសាង

۞ يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَتَّبِعُواْ خُطُوَٰتِ ٱلشَّيْطَـٰنِ ۚ وَمَن يَتَّبِعْ خُطُوَٰتِ ٱلشَّيْطَـٰنِ فَإِنَّهُۥ يَأْمُرُ بِٱلْفَحْشَآءِ وَٱلْمُنكَرِ ۚ وَلَوْلَا فَضْلُ ٱللَّهِ عَلَيْكُمْ وَرَحْمَتُهُۥ مَا زَكَىٰ مِنكُم مِّنْ أَحَدٍ أَبَدًا وَلَـٰكِنَّ ٱللَّهَ يُزَكِّى مَن يَشَآءُ ۗ وَٱللَّهُ سَمِيعٌ عَلِيمٌ ﴿٢١﴾

وَلَا يَأْتَلِ أُوْلُواْ ٱلْفَضْلِ مِنكُمْ وَٱلسَّعَةِ أَن يُؤْتُوٓاْ أُوْلِى ٱلْقُرْبَىٰ وَٱلْمَسَـٰكِينَ وَٱلْمُهَـٰجِرِينَ فِى سَبِيلِ ٱللَّهِ ۖ وَلْيَعْفُواْ وَلْيَصْفَحُوٓاْ ۗ أَلَا تُحِبُّونَ أَن يَغْفِرَ ٱللَّهُ لَكُمْ ۗ وَٱللَّهُ غَفُورٌ رَّحِيمٌ ﴿٢٢﴾

إِنَّ ٱلَّذِينَ يَرْمُونَ ٱلْمُحْصَنَـٰتِ ٱلْغَـٰفِلَـٰتِ ٱلْمُؤْمِنَـٰتِ لُعِنُواْ فِى ٱلدُّنْيَا وَٱلْـَٔاخِرَةِ وَلَهُمْ عَذَابٌ عَظِيمٌ ﴿٢٣﴾

يَوْمَ تَشْهَدُ عَلَيْهِمْ أَلْسِنَتُهُمْ وَأَيْدِيهِمْ وَأَرْجُلُهُم بِمَا كَانُواْ يَعْمَلُونَ ﴿٢٤﴾

يَوْمَئِذٍ يُوَفِّيهِمُ ٱللَّهُ دِينَهُمُ ٱلْحَقَّ وَيَعْلَمُونَ أَنَّ ٱللَّهَ هُوَ ٱلْحَقُّ ٱلْمُبِينُ ﴿٢٥﴾

ٱلْخَبِيثَـٰتُ لِلْخَبِيثِينَ وَٱلْخَبِيثُونَ لِلْخَبِيثَـٰتِ ۖ وَٱلطَّيِّبَـٰتُ لِلطَّيِّبِينَ وَٱلطَّيِّبُونَ لِلطَّيِّبَـٰتِ ۚ أُوْلَـٰٓئِكَ مُبَرَّءُونَ مِمَّا يَقُولُونَ ۖ

لَهُم مَّغۡفِرَةٞ وَرِزۡقٞ كَرِيمٞ ﴿٢٦﴾

អំពើល្អគឺសម្រាប់ស្ត្រីដែលសាងអំពើល្អ។ អ្នក(ដែលធ្វើល្អ)ទាំងនោះ(ដូចជាសហ្វាវ៉ាន និងអាអ៊ីស្ហះ)ហើយគឺជាអ្នកដែលស្អាតស្អំអំពីអ្វីដែលពួកគេចោទប្រកាន់។ ពួកគេនឹងទទួលបានការអភ័យទោស និងលាភសក្ការៈដ៏ល្អប្រពៃ(ឋានសួគ៌)។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَدۡخُلُواْ بُيُوتًا غَيۡرَ بُيُوتِكُمۡ حَتَّىٰ تَسۡتَأۡنِسُواْ وَتُسَلِّمُواْ عَلَىٰٓ أَهۡلِهَاۚ ذَٰلِكُمۡ خَيۡرٞ لَّكُمۡ لَعَلَّكُمۡ تَذَكَّرُونَ ﴿٢٧﴾

២៧-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំចូលក្នុងលំនៅដ្ឋាន(អ្នកដទៃ) ក្រៅពីលំនៅដ្ឋានរបស់ពួកអ្នកឱ្យសោះ លុះត្រាតែពួកអ្នកសុំការអនុញ្ញាតនិងឱ្យសាឡាម[1] ទៅម្ចាស់ផ្ទះរបស់គេជាមុនសិន។ ទាំងនោះជាប្រការល្អសម្រាប់ពួកអ្នក សង្ឃឹមថា ពួកអ្នកនឹងចងចាំ។

فَإِن لَّمۡ تَجِدُواْ فِيهَآ أَحَدٗا فَلَا تَدۡخُلُوهَا حَتَّىٰ يُؤۡذَنَ لَكُمۡۖ وَإِن قِيلَ لَكُمُ ٱرۡجِعُواْ فَٱرۡجِعُواْۖ هُوَ أَزۡكَىٰ لَكُمۡۚ وَٱللَّهُ بِمَا تَعۡمَلُونَ عَلِيمٞ ﴿٢٨﴾

២៨-តែប្រសិនបើពួកអ្នកមិនបានជួបអ្នកណាម្នាក់នៅក្នុងផ្ទះទេនោះ ពួកអ្នកមិនត្រូវចូលទៅក្នុងផ្ទះនោះជាដាច់ខាត លុះត្រាតែមានគេអនុញ្ញាតឱ្យពួកអ្នក។ ហើយប្រសិនបើគេបាននិយាយទៅកាន់ពួកអ្នកថាៈ សូមពួកអ្នកត្រឡប់ទៅវិញចុះ ពួកអ្នកត្រូវតែត្រឡប់ទៅវិញ វា(ការត្រឡប់ទៅវិញ)គឺជាប្រការស្អាតស្អំបំផុតសម្រាប់ពួកអ្នក។ ហើយអល់ឡោះមហាដឹងនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

لَّيۡسَ عَلَيۡكُمۡ جُنَاحٌ أَن تَدۡخُلُواْ بُيُوتًا غَيۡرَ مَسۡكُونَةٖ فِيهَا مَتَٰعٞ لَّكُمۡۚ وَٱللَّهُ يَعۡلَمُ مَا تُبۡدُونَ وَمَا تَكۡتُمُونَ ﴿٢٩﴾

២៩-គ្មានទោសពៃរ៍អ្វីចំពោះពួកអ្នកឡើយ ប្រសិនបើពួកអ្នកចូល(ដោយគ្មានការអនុញ្ញាត)ទៅសម្រាកកាយក្នុងលំនៅដ្ឋាននានា ដែលគេសាងសង់មិនមែនសម្រាប់រស់នៅនោះ(ដូចជាសាលាឆទាន)។ ហើយអល់ឡោះដឹងនូវអ្វីដែលពួកអ្នកលាតត្រដាង និងអ្វីដែលពួកអ្នកលាក់កំបាំង។

قُل لِّلۡمُؤۡمِنِينَ يَغُضُّواْ مِنۡ أَبۡصَٰرِهِمۡ وَيَحۡفَظُواْ فُرُوجَهُمۡۚ ذَٰلِكَ أَزۡكَىٰ لَهُمۡۗ إِنَّ ٱللَّهَ خَبِيرُۢ بِمَا يَصۡنَعُونَ ﴿٣٠﴾

៣០-ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់បណ្តាបុរសដែលមានជំនឿឱ្យពួកគេដាក់ក្រសែភ្នែករបស់ពួកគេចុះពីការសម្លឹងមើល(ស្ត្រី និងអ្វីដែលច្បាប់អ៊ីស្លាមបានហាមឃាត់)ហើយឱ្យពួកគេថែរក្សានូវប្រដាប់ភេទរបស់ពួកគេ(អំពីប្រការហ្ស៊ីណា)។ នោះគឺជាប្រការស្អាតស្អំបំផុតសម្រាប់ពួកគេ។ ពិតប្រាកដណាស់ អល់ឡោះដឹងជ្រួតជ្រាបបំផុតនូវអ្វីដែលពួកគេប្រព្រឹត្ត។

---

១-ឱ្យសាឡាម ៖ គឺជាការស្វាគមន៍របស់សាសនិកអ៊ីស្លាមដោយពោលពាក្យថាៈ السلام عليكم

وَقُل لِّلْمُؤْمِنَٰتِ يَغْضُضْنَ مِنْ أَبْصَٰرِهِنَّ
وَيَحْفَظْنَ فُرُوجَهُنَّ وَلَا يُبْدِينَ زِينَتَهُنَّ إِلَّا
مَا ظَهَرَ مِنْهَا ۖ وَلْيَضْرِبْنَ بِخُمُرِهِنَّ عَلَىٰ
جُيُوبِهِنَّ ۖ وَلَا يُبْدِينَ زِينَتَهُنَّ إِلَّا
لِبُعُولَتِهِنَّ أَوْ ءَابَآئِهِنَّ أَوْ ءَابَآءِ
بُعُولَتِهِنَّ أَوْ أَبْنَآئِهِنَّ أَوْ أَبْنَآءِ
بُعُولَتِهِنَّ أَوْ إِخْوَٰنِهِنَّ أَوْ بَنِىٓ إِخْوَٰنِهِنَّ
أَوْ بَنِىٓ أَخَوَٰتِهِنَّ أَوْ نِسَآئِهِنَّ أَوْ مَا مَلَكَتْ
أَيْمَٰنُهُنَّ أَوِ ٱلتَّٰبِعِينَ غَيْرِ أُو۟لِى ٱلْإِرْبَةِ مِنَ
ٱلرِّجَالِ أَوِ ٱلطِّفْلِ ٱلَّذِينَ لَمْ يَظْهَرُوا۟ عَلَىٰ
عَوْرَٰتِ ٱلنِّسَآءِ ۖ وَلَا يَضْرِبْنَ بِأَرْجُلِهِنَّ لِيُعْلَمَ
مَا يُخْفِينَ مِن زِينَتِهِنَّ ۚ وَتُوبُوٓا۟ إِلَى ٱللَّهِ جَمِيعًا
أَيُّهَ ٱلْمُؤْمِنُونَ لَعَلَّكُمْ تُفْلِحُونَ ﴿٣١﴾
وَأَنكِحُوا۟ ٱلْأَيَٰمَىٰ مِنكُمْ وَٱلصَّٰلِحِينَ مِنْ
عِبَادِكُمْ وَإِمَآئِكُمْ ۚ إِن يَكُونُوا۟ فُقَرَآءَ يُغْنِهِمُ
ٱللَّهُ مِن فَضْلِهِۦ ۗ وَٱللَّهُ وَٰسِعٌ عَلِيمٌ ﴿٣٢﴾

وَلْيَسْتَعْفِفِ ٱلَّذِينَ لَا يَجِدُونَ نِكَاحًا حَتَّىٰ
يُغْنِيَهُمُ ٱللَّهُ مِن فَضْلِهِۦ ۗ وَٱلَّذِينَ يَبْتَغُونَ
ٱلْكِتَٰبَ مِمَّا مَلَكَتْ أَيْمَٰنُكُمْ فَكَاتِبُوهُمْ إِنْ
عَلِمْتُمْ فِيهِمْ خَيْرًا ۖ وَءَاتُوهُم مِّن مَّالِ ٱللَّهِ
ٱلَّذِىٓ ءَاتَىٰكُمْ ۚ وَلَا تُكْرِهُوا۟ فَتَيَٰتِكُمْ عَلَى

៣១-ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់បណ្ដាស្ត្រីដែលមានជំនឿឱ្យពួកនាងដាក់ក្រសែភ្នែករបស់ពួកនាងចុះពីការសម្លឹងមើល(បុរសនិងអ្វីដែលច្បាប់អ៊ីស្លាមបានហាមឃាត់) ហើយឱ្យពួកនាងថែរក្សាប្រដាប់ភេទរបស់ពួកនាង(អំពីប្រការហ្ស៊ីណា)។ ហើយកុំឱ្យពួកនាងបង្ហាញសម្រស់របស់នាង លើកលែងតែអ្វីដែលបានស្តែងចេញជាធម្មតា(មុខប្រអប់ដៃប្រអប់ជើង)។ ហើយឱ្យពួកនាងយកស្បៃគ្របឱ្យជិតនៅបរិវេណដើមទ្រូង និងករបស់នាងដោយមិនឱ្យពួកនាងបង្ហាញសម្រស់នៅមុខបុរសណាក្រៅពីស្វាមីរបស់ពួកនាង ឪពុករបស់ពួកនាង ឪពុកក្មេករបស់ពួកនាង កូនប្រុសៗរបស់ពួកនាង កូនប្រុសៗប្តីរបស់ពួកនាង បងប្អូនប្រុសរបស់ពួកនាង កូនប្រុសៗនៃបងប្អូនប្រុសស្រីរបស់ពួកនាង ស្ត្រីគ្នាឯង ខ្ញុំបម្រើស្រីដាច់ថ្លៃរបស់ពួកនាង ឬអ្នកបម្រើប្រុសៗដែលគ្មានកាមតណ្ហា ព្រមទាំងក្មេងតូចៗដែលពុំទាន់ដឹងពីកេរ្តិ៍ខ្មាស់របស់ស្ត្រីនោះឡើយ។ ដូច្នោះដែរកុំឱ្យពួកនាងដើរទន្ទ្រាំជើងបន្លឺសំឡេង ដើម្បីឱ្យគេដឹងនូវអ្វីដែលពួកនាងលាក់បាំងអំពីការតុបតែងរបស់ពួកនាងឱ្យសោះ។ ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកសារភាពកំហុសទៅចំពោះអល់ឡោះទាំងអស់គ្នាចុះ សង្ឃឹមថាពួកអ្នកនឹងទទួលបានជោគជ័យ។

៣២-ហើយចូរពួកអ្នករៀបអាពាហ៍ពិពាហ៍ឱ្យអ្នកដែលនៅលីវក្នុងចំណោមពួកអ្នក និងពួកខ្ញុំបម្រើដាច់ថ្លៃប្រុសស្រីរបស់ពួកអ្នកដែលជាអ្នកល្អត្រឹមត្រូវ។ ប្រសិនបើពួកគេជាអ្នកក្រខ្សត់នោះអល់ឡោះនឹងផ្ដល់ភាពមានបានដល់ពួកគេដោយក្តីប្រោសប្រទានពីទ្រង់។ អល់ឡោះមហាទូលំទូលាយ មហាដឹង។

៣៣-ហើយចូរឱ្យពួកដែលគ្មានលទ្ធភាពរៀបអាពាហ៍ពិពាហ៍រក្សាខ្លួនប្រាណ(អំពីប្រការហ្ស៊ីណា) រហូតទាល់តែអល់ឡោះផ្ដល់ភាពមានបានដល់ពួកគេតាមការប្រោសប្រទានរបស់ទ្រង់។ ហើយក្នុងចំណោមខ្ញុំបម្រើដាច់ថ្លៃរបស់ពួកអ្នកដែលចង់បានកិច្ចសន្យា(ដើម្បីស្វែងរកសិទ្ធិសេរីភាពរបស់ខ្លួន)នោះ ចូរពួកអ្នកធ្វើកិច្ចសន្យាជាមួយពួកគេចុះ ប្រសិនបើពួកអ្នកយល់ឃើញថាជាការប្រសើរចំពោះពួកគេ។ ហើយចូរពួកអ្នកផ្ដល់ឱ្យពួកគេនូវទ្រព្យសម្បត្តិខ្លះ

ٱلْبِغَآءِ إِنْ أَرَدْنَ تَحَصُّنًا لِّتَبْتَغُوا۟ عَرَضَ
ٱلْحَيَوٰةِ ٱلدُّنْيَا ۚ وَمَن يُكْرِههُّنَّ فَإِنَّ ٱللَّهَ مِنۢ
بَعْدِ إِكْرَٰهِهِنَّ غَفُورٌ رَّحِيمٌ ﴿٣٣﴾

ដែលអល់ឡោះបានប្រទានឱ្យពួកអ្នក។ ហើយពួកអ្នកមិនត្រូវបង្ខិតបង្ខំស្រីបម្រើរបស់ពួកអ្នកឱ្យធ្វើជាស្រីពេស្យា ដើម្បីស្វែងរកទ្រព្យសម្បត្តិ និងសេចក្តីថ្លៃថ្នូរក្នុងការរស់នៅក្នុងលោកិយឡើយ ប្រសិនបើពួកនាងចង់ក្លាយជាអ្នកស្អាតស្អំនោះ។ ហើយអ្នកណាដែលបង្ខិតបង្ខំពួកនាង(ឱ្យធ្វើជាស្រីពេស្យា) ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ចំពោះពួកនាងក្រោយពីពួកនាងត្រូវបានគេបង្ខិតបង្ខំ។

وَلَقَدْ أَنزَلْنَآ إِلَيْكُمْ ءَايَٰتٍ مُّبَيِّنَٰتٍ وَمَثَلًا
مِّنَ ٱلَّذِينَ خَلَوْا۟ مِن قَبْلِكُمْ وَمَوْعِظَةً
لِّلْمُتَّقِينَ ﴿٣٤﴾

៣៤-ហើយជាការពិតណាស់ យើងបានបញ្ចុះឱ្យពួកអ្នកនូវអាយ៉ាត់ៗយ៉ាងច្បាស់លាស់ និងរឿងរ៉ាវនៃពួកជំនាន់មុនពីមុនពួកអ្នក ហើយនិងដំបូន្មានសម្រាប់បណ្តាអ្នកដែលកោតខ្លាចយើង។

۞ ٱللَّهُ نُورُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۚ مَثَلُ
نُورِهِۦ كَمِشْكَوٰةٍ فِيهَا مِصْبَاحٌ ۖ ٱلْمِصْبَاحُ فِى
زُجَاجَةٍ ۖ ٱلزُّجَاجَةُ كَأَنَّهَا كَوْكَبٌ دُرِّىٌّ يُوقَدُ
مِن شَجَرَةٍ مُّبَٰرَكَةٍ زَيْتُونَةٍ لَّا شَرْقِيَّةٍ وَلَا
غَرْبِيَّةٍ يَكَادُ زَيْتُهَا يُضِىٓءُ وَلَوْ لَمْ تَمْسَسْهُ
نَارٌ ۚ نُّورٌ عَلَىٰ نُورٍ ۗ يَهْدِى ٱللَّهُ لِنُورِهِۦ مَن
يَشَآءُ ۚ وَيَضْرِبُ ٱللَّهُ ٱلْأَمْثَٰلَ لِلنَّاسِ ۗ وَٱللَّهُ
بِكُلِّ شَىْءٍ عَلِيمٌ ﴿٣٥﴾

៣៥-អល់ឡោះគឺជាពន្លឺនៃមេឃជាច្រើនជាន់ និងផែនដី។ ពន្លឺដ៏ត្រចះត្រចង់របស់ទ្រង់ប្រៀបដូចជាកញ្ចក់គោមមួយដែលមានចង្កៀងនៅក្នុងនោះ។ ចង្កៀងនោះស្ថិតនៅក្នុងកញ្ចក់មួយ ហើយកញ្ចក់នោះប្រៀបដូចជាតារាមួយដួងភ្លឺចិញ្ចាចដែលគេអុជវាអំពីប្រេងអូលីវដែលចម្រាញ់ចេញពីដើមឈើដ៏មានពរជ័យដែលមិនស្ថិតនៅទិសខាងកើត និងទិសខាងលិចទាំងស្រុងដែរ ដែលប្រេងរបស់វាស្ទើរតែជះពន្លឺចែងចាំង សូម្បីពុំទាន់អុជភ្លើងក៏ដោយ។ នេះពិតជាពន្លឺត្រួតលើពន្លឺ។ អល់ឡោះនឹងចង្អុលបង្ហាញដោយពន្លឺរបស់ទ្រង់ចំពោះអ្នកណាដែលទ្រង់មានចេតនា។ អល់ឡោះតែងតែលើកជាឧទាហរណ៍សម្រាប់មនុស្សលោក។ ហើយអល់ឡោះ មហាដឹងនូវអ្វីៗទាំងអស់។

فِى بُيُوتٍ أَذِنَ ٱللَّهُ أَن تُرْفَعَ وَيُذْكَرَ فِيهَا
ٱسْمُهُۥ يُسَبِّحُ لَهُۥ فِيهَا بِٱلْغُدُوِّ وَٱلْءَاصَالِ ﴿٣٦﴾

៣៦-(ពន្លឺដ៏ត្រចះត្រចង់នោះ) មាននៅក្នុងបណ្តាម៉ាស្ជិទដែលអល់ឡោះបង្គាប់ឱ្យលើកតម្កើង(ការសំអាត ការធ្វើឱ្យមានកិត្តិយស) និងឱ្យគេរំលឹកឈ្មោះរបស់ទ្រង់នៅក្នុងនោះកោតសរសើរលើកតម្កើងទ្រង់នៅក្នុងនោះទាំងព្រឹកទាំងល្ងាច។

رِجَالٌ لَّا تُلْهِيهِمْ تِجَٰرَةٌ وَلَا بَيْعٌ عَن ذِكْرِ ٱللَّهِ
وَإِقَامِ ٱلصَّلَوٰةِ وَإِيتَآءِ ٱلزَّكَوٰةِ ۙ يَخَافُونَ يَوْمًا

៣៧-គឺបុរសៗ(ដែលកោតសរសើរលើកតម្កើងទ្រង់) ការងារជំនួញនិងការលក់ដូរផ្សេងៗពុំអាចធ្វើឱ្យពួកគេភ្លេចពីការរំលឹកអល់ឡោះ និងការប្រតិបត្តិសឡាត និងការបរិច្ចាគហ្សាកាត់ឡើយ។

تَتَقَلَّبُ فِيهِ ٱلْقُلُوبُ وَٱلْأَبْصَٰرُ ٣٧

ពួកគេភ័យខ្លាចចំពោះថ្ងៃដែលចិត្តនិងភ្នែកភ័យរន្ធត់(ថ្ងៃបរលោក)។

لِيَجْزِيَهُمُ ٱللَّهُ أَحْسَنَ مَا عَمِلُوا۟ وَيَزِيدَهُم مِّن فَضْلِهِۦ ۗ وَٱللَّهُ يَرْزُقُ مَن يَشَآءُ بِغَيْرِ حِسَابٍ ٣٨

៣៨-ដើម្បីអល់ឡោះនឹងតបស្នងផលបុណ្យដ៏ប្រសើរបំផុតដល់ពួកគេនូវអ្វីដែលពួកគេបានសាងកន្លងមក ហើយទ្រង់នឹងបន្ថែមឱ្យពួកគេលើសពីនេះទៀតដោយការប្រោសប្រទានរបស់ទ្រង់។ ហើយអល់ឡោះនឹងផ្ដល់លាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនាដោយគ្មានការកំណត់ឡើយ។

وَٱلَّذِينَ كَفَرُوٓا۟ أَعْمَٰلُهُمْ كَسَرَابٍۭ بِقِيعَةٍ يَحْسَبُهُ ٱلظَّمْـَٔانُ مَآءً حَتَّىٰٓ إِذَا جَآءَهُۥ لَمْ يَجِدْهُ شَيْـًٔا وَوَجَدَ ٱللَّهَ عِندَهُۥ فَوَفَّىٰهُ حِسَابَهُۥ ۗ وَٱللَّهُ سَرِيعُ ٱلْحِسَابِ ٣٩

៣៩-រីឯពួកដែលគ្មានជំនឿ អំពើល្អរបស់ពួកគេប្រៀបដូចជាថ្ងៃបណ្ដើរកូននៅទីវាលទំនាបក្នុងវាលខ្សាច់ដែលអ្នកស្រេកទឹកខ្លាំងគិតថាវាជាទឹក លុះនៅពេលដែលគេបានទៅដល់កន្លែងនោះ គេមិនបានឃើញអ្វីនៅទីនោះឡើយ។ ហើយ(នៅទីបញ្ចប់)គេបានជួបអល់ឡោះនៅចំពោះមុខគេ(ថ្ងៃបរលោក) ហើយទ្រង់ក៏បានផ្ដល់ឱ្យគេនូវផលកម្មរបស់គេយ៉ាងពេញលេញ(នរក)។ ហើយអល់ឡោះគឺជាអ្នកវិនិច្ឆ័យយ៉ាងរហ័សបំផុត។

أَوْ كَظُلُمَٰتٍ فِى بَحْرٍ لُّجِّىٍّ يَغْشَىٰهُ مَوْجٌ مِّن فَوْقِهِۦ مَوْجٌ مِّن فَوْقِهِۦ سَحَابٌ ۚ ظُلُمَٰتٌۢ بَعْضُهَا فَوْقَ بَعْضٍ إِذَآ أَخْرَجَ يَدَهُۥ لَمْ يَكَدْ يَرَىٰهَا ۗ وَمَن لَّمْ يَجْعَلِ ٱللَّهُ لَهُۥ نُورًا فَمَا لَهُۥ مِن نُّورٍ ٤٠

៤០-ឬ(អ្នកដែលគ្មានជំនឿនិងប្រព្រឹត្តអំពើអាក្រក់)ប្រៀបបានទៅនឹងភាពងងឹតនៅក្នុងបាតសមុទ្រដ៏ជ្រៅមួយដែលមានរលកធំៗគ្របពីលើវាជួន១គ្នា បន្ថែមពីនេះមានផ្ទាំងពពកខ្មៅធំមួយគ្របដណ្ដប់លើរលកនោះទៀត។ នេះគឺជាភាពងងឹតត្រួតលើភាពងងឹត នៅពេលដែលគេដកដៃរបស់គេចេញ(ក្នុងបាតសមុទ្រនោះ)គេស្ទើរតែមើលមិនឃើញវា។ ហើយអ្នកណាដែលអល់ឡោះមិនបានផ្ដល់ពន្លឺ(ការចង្អុលបង្ហាញ)ឱ្យគេទេនោះគឺគ្មានពន្លឺសម្រាប់គេឡើយ។

أَلَمْ تَرَ أَنَّ ٱللَّهَ يُسَبِّحُ لَهُۥ مَن فِى ٱلسَّمَٰوَٰتِ وَٱلْأَرْضِ وَٱلطَّيْرُ صَٰٓفَّٰتٍ ۖ كُلٌّ قَدْ عَلِمَ صَلَاتَهُۥ وَتَسْبِيحَهُۥ ۗ وَٱللَّهُ عَلِيمٌۢ بِمَا يَفْعَلُونَ ٤١

៤១-តើអ្នក(មូហាំម៉ាត់)មិនបានដឹងទេថា ពិតប្រាកដណាស់អល់ឡោះត្រូវបានអ្នកដែលនៅលើមេឃជាច្រើនជាន់ និងផែនដី ហើយនិងសត្វស្លាបដែលហើរត្រដាងស្លាបទាំងគូនៅលើអាកាសលើកតម្កើងសរសើរចំពោះទ្រង់នោះ? រាល់សត្វលោកទាំងអស់សុទ្ធតែបានដឹងពីរបៀបគោរពសក្ការៈ និងការកោតសរសើរលើកតម្កើងទ្រង់។ ហើយអល់ឡោះមហាដឹងនូវអ្វីដែលពួកគេធ្វើ។

وَلِلَّهِ مُلْكُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۖ وَإِلَى ٱللَّهِ

៤២-ហើយការគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ហើយទៅចំពោះអល់ឡោះតែមួយគត់

ដែលជាកន្លែងវិលត្រឡប់ ។

៤៣-តើអ្នក(មូហាំម៉ាត់)មិនបានឃើញទេថា ពិតប្រាកដណាស់ អល់ឡោះបានធ្វើឱ្យពពករសាត់ បន្ទាប់មកទ្រង់ប្រមូលផ្តុំវា បន្ទាប់មកទៀតទ្រង់ធ្វើឱ្យវាទៅជាដុំក្រាស់ឃ្មឹក ពេលនោះអ្នកនឹងឃើញទឹកភ្លៀងចេញពីចន្លោះរបស់វា ។ ហើយទ្រង់បញ្ចុះពីលើមេឃនូវភ្នំពពកជាច្រើនដែលនៅក្នុងនោះមានព្រិល ។ ហើយទ្រង់នឹងធ្វើឱ្យវាធ្លាក់ទៅលើអ្នកណាដែលទ្រង់មានចេតនា ហើយទ្រង់ក៏នឹងបញ្ចៀសវាចំពោះអ្នកណាដែលទ្រង់មានចេតនាដែរ ។ ពន្លឺនៃផ្លេកបន្ទោររបស់វាស្ទើរតែឆក់យកក្រសែភ្នែក ។

៤៤-អល់ឡោះជាអ្នកដែលផ្លាស់ប្តូរពេលយប់ និងពេលថ្ងៃ ។ ពិតប្រាកដណាស់ នៅក្នុងព្រឹត្តិការណ៍នោះគឺជាមេរៀនមួយសម្រាប់ពួកដែលមានការស្វែងយល់ ។

៤៥-ហើយអល់ឡោះបានបង្កើតសត្វដែលមានជីវិតទាំងអស់អំពីទឹក ។ ហើយក្នុងចំណោមពួកវាមានសត្វដែលវារនឹងពោះរបស់វា ហើយមួយចំនួនទៀតមានសត្វដែលដើរជើងពីរ ហើយមួយចំនួនទៀតមានសត្វដែលដើរជើងបួន ។ អល់ឡោះនឹងបង្កើតនូវអ្វីដែលទ្រង់មានចេតនា ។ ពិតប្រាកដណាស់ អល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

៤៦-ជាការពិតណាស់ យើងបានបញ្ចុះនូវភស្តុតាងនានាបញ្ជាក់យ៉ាងច្បាស់លាស់ ។ ហើយអល់ឡោះចង្អុលបង្ហាញដល់អ្នកណាដែលទ្រង់មានចេតនាទៅកាន់មាគ៌ាដែលត្រឹមត្រូវ ។

៤៧-ហើយពួកគេ(ពួកពុតត្បុត)និយាយថាៈ ពួកយើងបានជឿលើអល់ឡោះ និងអ្នកនាំសារ ហើយពួកយើងក៏បានប្រតិបត្តិតាមដែរ ។ បន្ទាប់មកមានមួយក្រុមក្នុងចំណោមពួកគេងាកចេញក្រោយពីនោះ ។ ហើយពួកគេទាំងនោះពុំមែនជាអ្នកដែលមានជំនឿឡើយ ។

៤៨-ហើយនៅពេលដែលពួកគេត្រូវបានគេអំពាវនាវទៅកាន់អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ដើម្បីកាត់សេចក្តីរវាងពួកគេ

ٱلْمَصِيرُ ﴿٤٢﴾

أَلَمْ تَرَ أَنَّ ٱللَّهَ يُزْجِى سَحَابًا ثُمَّ يُؤَلِّفُ بَيْنَهُۥ
ثُمَّ يَجْعَلُهُۥ رُكَامًا فَتَرَى ٱلْوَدْقَ يَخْرُجُ مِنْ
خِلَٰلِهِۦ وَيُنَزِّلُ مِنَ ٱلسَّمَآءِ مِن جِبَالٍ فِيهَا
مِنۢ بَرَدٍ فَيُصِيبُ بِهِۦ مَن يَشَآءُ وَيَصْرِفُهُۥ
عَن مَّن يَشَآءُ ۖ يَكَادُ سَنَا بَرْقِهِۦ يَذْهَبُ
بِٱلْأَبْصَٰرِ ﴿٤٣﴾

يُقَلِّبُ ٱللَّهُ ٱلَّيْلَ وَٱلنَّهَارَ ۚ إِنَّ فِى ذَٰلِكَ لَعِبْرَةً
لِّأُو۟لِى ٱلْأَبْصَٰرِ ﴿٤٤﴾

وَٱللَّهُ خَلَقَ كُلَّ دَآبَّةٍ مِّن مَّآءٍ ۖ فَمِنْهُم مَّن
يَمْشِى عَلَىٰ بَطْنِهِۦ وَمِنْهُم مَّن يَمْشِى عَلَىٰ
رِجْلَيْنِ وَمِنْهُم مَّن يَمْشِى عَلَىٰٓ أَرْبَعٍ ۚ يَخْلُقُ ٱللَّهُ
مَا يَشَآءُ ۚ إِنَّ ٱللَّهَ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ﴿٤٥﴾

لَّقَدْ أَنزَلْنَآ ءَايَٰتٍ مُّبَيِّنَٰتٍ ۚ وَٱللَّهُ يَهْدِى مَن
يَشَآءُ إِلَىٰ صِرَٰطٍ مُّسْتَقِيمٍ ﴿٤٦﴾

وَيَقُولُونَ ءَامَنَّا بِٱللَّهِ وَبِٱلرَّسُولِ وَأَطَعْنَا
ثُمَّ يَتَوَلَّىٰ فَرِيقٌ مِّنْهُم مِّنۢ بَعْدِ ذَٰلِكَ ۚ وَمَآ
أُو۟لَٰٓئِكَ بِٱلْمُؤْمِنِينَ ﴿٤٧﴾

وَإِذَا دُعُوٓا۟ إِلَى ٱللَّهِ وَرَسُولِهِۦ لِيَحْكُمَ بَيْنَهُمْ
إِذَا فَرِيقٌ مِّنْهُم مُّعْرِضُونَ ﴿٤٨﴾

ស្រាប់តែមានមួយក្រុមក្នុងចំណោមពួកគេងាកចេញទៅវិញ ។

وَإِن يَكُن لَّهُمُ ٱلۡحَقُّ يَأۡتُوٓاْ إِلَيۡهِ مُذۡعِنِينَ ﴿٤٩﴾

៤៩-តែប្រសិនបើ( ការកាត់សេចក្តីឃើញថា) ត្រឹមត្រូវសម្រាប់ពួកគេនោះ ពួកគេពិតជានាំគ្នាមកកាន់អ្នកនាំសារ( មូហាំម៉ាត់) ដោយក្តីគោរព ។

أَفِي قُلُوبِهِم مَّرَضٌ أَمِ ٱرۡتَابُوٓاْ أَمۡ يَخَافُونَ أَن يَحِيفَ ٱللَّهُ عَلَيۡهِمۡ وَرَسُولُهُۥۚ بَلۡ أُوْلَٰٓئِكَ هُمُ ٱلظَّٰلِمُونَ ﴿٥٠﴾

៥០-តើនៅក្នុងចិត្តរបស់ពួកគេមានជំងឺ( ពុតត្បុត) ឬពួកគេមានការសង្ស័យ ឬក៏ពួកគេខ្លាចអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់គ្មានសច្ចធម៌ចំពោះពួកគេ? ផ្ទុយទៅវិញ ពួកទាំងនោះទេគឺជាពួកដែលបំពាននោះ ។

إِنَّمَا كَانَ قَوۡلَ ٱلۡمُؤۡمِنِينَ إِذَا دُعُوٓاْ إِلَى ٱللَّهِ وَرَسُولِهِۦ لِيَحۡكُمَ بَيۡنَهُمۡ أَن يَقُولُواْ سَمِعۡنَا وَأَطَعۡنَاۚ وَأُوْلَٰٓئِكَ هُمُ ٱلۡمُفۡلِحُونَ ﴿٥١﴾

៥១-ជាការពិតណាស់ ចម្លើយរបស់បណ្តាអ្នកដែលមានជំនឿនៅពេលដែលគេបានអំពាវនាវពួកគេទៅកាន់អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ដើម្បីកាត់សេចក្តីរវាងពួកគេគឺពួកគេឆ្លើយថា: ពួកយើងបានឮ ហើយពួកយើងបានប្រតិបត្តិតាម ។ ហើយអ្នកទាំងនោះជាបណ្តាអ្នកដែលទទួលបានជោគជ័យ ។

وَمَن يُطِعِ ٱللَّهَ وَرَسُولَهُۥ وَيَخۡشَ ٱللَّهَ وَيَتَّقۡهِ فَأُوْلَٰٓئِكَ هُمُ ٱلۡفَآئِزُونَ ﴿٥٢﴾

៥២-ហើយអ្នកណាដែលប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ហើយភ័យខ្លាច( ទារុណកម្ម) អល់ឡោះ និងកោតខ្លាចទ្រង់ អ្នកទាំងនោះគឺជាបណ្តាអ្នកដែលទទួលជ័យជំនះ ។

۞وَأَقۡسَمُواْ بِٱللَّهِ جَهۡدَ أَيۡمَٰنِهِمۡ لَئِنۡ أَمَرۡتَهُمۡ لَيَخۡرُجُنَّۖ قُل لَّا تُقۡسِمُواْۖ طَاعَةٞ مَّعۡرُوفَةٌۚ إِنَّ ٱللَّهَ خَبِيرُۢ بِمَا تَعۡمَلُونَ ﴿٥٣﴾

៥៣-ហើយពួកគេ( ពួកពុតត្បុត) បានស្បថនឹងអល់ឡោះដោយការស្បថយ៉ាងម៉ឺងម៉ាត់របស់ពួកគេថា: ប្រសិនបើអ្នក( មូហាំម៉ាត់) បានបញ្ជាពួកគេ( ឱ្យធ្វើសង្គ្រាម) នោះ ពួកគេប្រាកដជានឹងចេញទៅភ្លាម ។ ចូរអ្នកពោលថា: ចូរពួកអ្នកកុំស្បថអ្វី ការគោរពប្រតិបត្តិ( របស់ពួកអ្នក) គេដឹងហើយ( ថាវាមិនពិត) ។ ពិតប្រាកដណាស់អល់ឡោះដឹងបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

قُلۡ أَطِيعُواْ ٱللَّهَ وَأَطِيعُواْ ٱلرَّسُولَۖ فَإِن تَوَلَّوۡاْ فَإِنَّمَا عَلَيۡهِ مَا حُمِّلَ وَعَلَيۡكُم مَّا حُمِّلۡتُمۡۖ وَإِن تُطِيعُوهُ تَهۡتَدُواْۚ وَمَا عَلَى ٱلرَّسُولِ إِلَّا ٱلۡبَلَٰغُ ٱلۡمُبِينُ ﴿٥٤﴾

៥៤-ចូរអ្នកពោលថា: ចូរពួកអ្នកគោរពប្រតិបត្តិតាមអល់ឡោះ ហើយចូរពួកអ្នកគោរពប្រតិបត្តិតាមអ្នកនាំសាររបស់ទ្រង់ចុះ ។ តែប្រសិនបើពួកគេបែរចេញវិញនោះ ពិតប្រាកដណាស់កាតព្វកិច្ចរបស់គេ( មូហាំម៉ាត់) គឺគ្រាន់តែអនុវត្តតាមអ្វីដែលគេ( អល់ឡោះ) បានបញ្ជាប៉ុណ្ណោះ ។ ហើយកាតព្វកិច្ចរបស់ពួកអ្នកក៏ត្រូវអនុវត្តតាមអ្វីដែលគេ( មូហាំម៉ាត់) បានបញ្ជាពួកអ្នកដែរ ។ ហើយប្រសិនបើពួក

អ្នកគោរពប្រតិបត្តិតាមគេនោះ ពួកអ្នកនឹងទទួលបានការចង្អុលបង្ហាញជាមិនខាន ។ ហើយកាតព្វកិច្ចរបស់អ្នកនាំសារគ្មានអ្វីក្រៅពីការផ្តល់សារដ៏ច្បាស់លាស់នោះឡើយ ។

وَعَدَ ٱللَّهُ ٱلَّذِينَ ءَامَنُواْ مِنكُمۡ وَعَمِلُواْ
ٱلصَّٰلِحَٰتِ لَيَسۡتَخۡلِفَنَّهُمۡ فِي ٱلۡأَرۡضِ
كَمَا ٱسۡتَخۡلَفَ ٱلَّذِينَ مِن قَبۡلِهِمۡ
وَلَيُمَكِّنَنَّ لَهُمۡ دِينَهُمُ ٱلَّذِي ٱرۡتَضَىٰ لَهُمۡ
وَلَيُبَدِّلَنَّهُم مِّنۢ بَعۡدِ خَوۡفِهِمۡ أَمۡنٗاۚ يَعۡبُدُونَنِي
لَا يُشۡرِكُونَ بِي شَيۡـٔٗاۚ وَمَن كَفَرَ بَعۡدَ
ذَٰلِكَ فَأُوْلَٰٓئِكَ هُمُ ٱلۡفَٰسِقُونَ ٥٥

៥៥-អល់ឡោះបានសន្យាចំពោះបណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវក្នុងចំណោមពួកអ្នកថា: ទ្រង់ពិតជាធ្វើឱ្យពួកគេមានអំណាចគ្រប់គ្រងនៅលើផែនដីដូចដែលទ្រង់ធ្លាប់បានធ្វើឱ្យបណ្តាអ្នកពីមុនពួកគេមានអំណាចគ្រប់គ្រងនោះដែរ ។ ហើយទ្រង់ពិតជាធ្វើឱ្យសាសនារបស់ពួកគេមានអានុភាពខ្ពង់ខ្ពស់សម្រាប់ពួកគេដែលទ្រង់គាប់ចិត្តឱ្យពួកគេ ។ ហើយទ្រង់ពិតជានឹងជំនួសឱ្យពួកគេនូវសុខសន្តិភាពបន្ទាប់ពីការភ័យខ្លាចរបស់ពួកគេ ។ ពួកគេគោរពសក្ការៈមកចំពោះយើងតែមួយគត់ ដោយពួកគេមិនធ្វើស្ហ៊ីរិកមកចំពោះយើងនូវប្រការណាមួយឡើយ ។ តែអ្នកណាហើយដែលបានប្រឆាំងបន្ទាប់ពីនោះ ពួកទាំងនោះគឺជាពួកដែលល្មើស ។

وَأَقِيمُواْ ٱلصَّلَوٰةَ وَءَاتُواْ ٱلزَّكَوٰةَ وَأَطِيعُواْ
ٱلرَّسُولَ لَعَلَّكُمۡ تُرۡحَمُونَ ٥٦

៥៦-ហើយចូរពួកអ្នកប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ ហើយនិងប្រតិបត្តិតាមអ្នកនាំសារ ។ សង្ឃឹមថាពួកអ្នកនឹងទទួលបានការអាណិតស្រឡាញ់ពីអល់ឡោះ ។

لَا تَحۡسَبَنَّ ٱلَّذِينَ كَفَرُواْ مُعۡجِزِينَ فِي
ٱلۡأَرۡضِۚ وَمَأۡوَىٰهُمُ ٱلنَّارُۖ وَلَبِئۡسَ
ٱلۡمَصِيرُ ٥٧

៥៧-ចូរអ្នក(មូហាំម៉ាត់)កុំគិតថា: ពួកដែលបានប្រឆាំងមានសមត្ថភាពរារាំង(ទារុណកម្មរបស់អល់ឡោះ)នៅលើផែនដីឱ្យសោះ ។ ហើយទីជំរករបស់ពួកគេគឺភ្លើងនរក ។ ហើយវាពិតជាទីកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لِيَسۡتَـٔۡذِنكُمُ ٱلَّذِينَ
مَلَكَتۡ أَيۡمَٰنُكُمۡ وَٱلَّذِينَ لَمۡ يَبۡلُغُواْ ٱلۡحُلُمَ
مِنكُمۡ ثَلَٰثَ مَرَّٰتٖۚ مِّن قَبۡلِ صَلَوٰةِ ٱلۡفَجۡرِ
وَحِينَ تَضَعُونَ ثِيَابَكُم مِّنَ ٱلظَّهِيرَةِ وَمِنۢ
بَعۡدِ صَلَوٰةِ ٱلۡعِشَآءِۚ ثَلَٰثُ عَوۡرَٰتٖ لَّكُمۡۚ
لَيۡسَ عَلَيۡكُمۡ وَلَا عَلَيۡهِمۡ جُنَاحُۢ بَعۡدَهُنَّۚ

៥៨-ឱបណ្តាអ្នកដែលមានជំនឿ! ចូរណែនាំពួកខ្ញុំបម្រើ និងពួកដែលមិនទាន់ពេញវ័យក្នុងចំណោមពួកអ្នកឱ្យសុំការអនុញ្ញាតពីពួកអ្នកនូវវេលាបី(មុននឹងចូលទៅរកពួកអ្នក)គឺមុនសឡាតពេលទាបភ្លឺ និងពេលដែលពួកអ្នកដោះសំលៀកបំពាក់នៅពេលថ្ងៃត្រង់ និងក្រោយពេលសឡាតអ៊ីស្ហាក ។ ពេលទាំងបីនេះជាពេលដែលច្រើនតែអាក្រាតសំលៀកបំពាក់សម្រាប់ពួកអ្នក ។គ្មានទោសពៃរ៍អ្វីឡើយចំពោះពួកអ្នក និងពួកគេក្រៅពីវេលាទាំងបីនេះ ដែលពួកគេចេញចូលទៅរកពួកអ្នក ។ ដូច្នេះហើយអល់ឡោះបញ្ជាក់អាយ៉ាត់១យ៉ាង

طَوَّٰفُونَ عَلَيۡكُم بَعۡضُكُمۡ عَلَىٰ بَعۡضٖۚ
كَذَٰلِكَ يُبَيِّنُ ٱللَّهُ لَكُمُ ٱلۡأٓيَٰتِۗ وَٱللَّهُ عَلِيمٌ
حَكِيمٞ ٥٨

ក្បោះក្បាយសម្រាប់ពួកអ្នក ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

وَإِذَا بَلَغَ ٱلۡأَطۡفَٰلُ مِنكُمُ ٱلۡحُلُمَ فَلۡيَسۡتَـٔۡذِنُواْ
كَمَا ٱسۡتَـٔۡذَنَ ٱلَّذِينَ مِن قَبۡلِهِمۡۚ
كَذَٰلِكَ يُبَيِّنُ ٱللَّهُ لَكُمۡ ءَايَٰتِهِۦۗ وَٱللَّهُ
عَلِيمٌ حَكِيمٞ ٥٩

៥៩-ហើយនៅពេលដែលក្មេងៗក្នុងចំណោមពួកអ្នកបានធំពេញវ័យ ចូរឱ្យពួកគេសុំការអនុញ្ញាតដូចដែលពួកចាស់ៗបានសុំការអនុញ្ញាតនោះដែរ ។ ដូច្នោះហើយអល់ឡោះបញ្ជាក់នូវអាយ៉ាត់ៗរបស់ទ្រង់យ៉ាងច្បាស់លាស់សម្រាប់ពួកអ្នក ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

وَٱلۡقَوَٰعِدُ مِنَ ٱلنِّسَآءِ ٱلَّٰتِي لَا يَرۡجُونَ نِكَاحٗا
فَلَيۡسَ عَلَيۡهِنَّ جُنَاحٌ أَن يَضَعۡنَ
ثِيَابَهُنَّ غَيۡرَ مُتَبَرِّجَٰتِۭ بِزِينَةٖۖ وَأَن
يَسۡتَعۡفِفۡنَ خَيۡرٞ لَّهُنَّۗ وَٱللَّهُ سَمِيعٌ
عَلِيمٞ ٦٠

៦០-ហើយអ្នកដែលចាស់ជរាក្នុងចំណោមស្ត្រីដែលគ្មានចំណង់ក្នុងការរៀបអាពាហ៍ពិពាហ៍ទេនោះ គឺគ្មានទោសពៃរ៍អ្វីឡើយសម្រាប់ពួកនាងក្នុងការដោះសំលៀកបំពាក់(ខាងក្រៅ)របស់ពួកនាងដោយពុំមែនក្នុងលក្ខណៈបង្ហាញសម្រស់ទេនោះ ។ ហើយការរក្សាភាព ខ្មាស់អៀនគឺប្រសើរសម្រាប់ពួកនាង ។ ហើយអល់ឡោះមហាឮ មហាដឹង ។

لَّيۡسَ عَلَى ٱلۡأَعۡمَىٰ حَرَجٞ وَلَا عَلَى ٱلۡأَعۡرَجِ
حَرَجٞ وَلَا عَلَى ٱلۡمَرِيضِ حَرَجٞ وَلَا عَلَىٰٓ
أَنفُسِكُمۡ أَن تَأۡكُلُواْ مِنۢ بُيُوتِكُمۡ أَوۡ بُيُوتِ
ءَابَآئِكُمۡ أَوۡ بُيُوتِ أُمَّهَٰتِكُمۡ أَوۡ بُيُوتِ
إِخۡوَٰنِكُمۡ أَوۡ بُيُوتِ أَخَوَٰتِكُمۡ أَوۡ بُيُوتِ
أَعۡمَٰمِكُمۡ أَوۡ بُيُوتِ عَمَّٰتِكُمۡ أَوۡ بُيُوتِ
أَخۡوَٰلِكُمۡ أَوۡ بُيُوتِ خَٰلَٰتِكُمۡ أَوۡ مَا
مَلَكۡتُم مَّفَاتِحَهُۥٓ أَوۡ صَدِيقِكُمۡۚ لَيۡسَ
عَلَيۡكُمۡ جُنَاحٌ أَن تَأۡكُلُواْ جَمِيعًا أَوۡ
أَشۡتَاتٗاۚ فَإِذَا دَخَلۡتُم بُيُوتٗا فَسَلِّمُواْ عَلَىٰٓ

៦១-ចំពោះជនដែលពិការភ្នែក ឬពិការជើង ឬអ្នកជម្ងឺ ឬក៏ខ្លួនពួកអ្នកផ្ទាល់ គឺគ្មានទោសពៃរ៍អ្វីឡើយក្នុងការទទួលទាន(ចំណីអាហារ)ពីក្នុងផ្ទះរបស់ពួកអ្នក ឬផ្ទះឪពុករបស់ពួកអ្នក ឬផ្ទះម្តាយរបស់ពួកអ្នក ឬផ្ទះបងប្អូនរបស់ពួកអ្នក ឬផ្ទះអ៊ំពូមីងមាខាងឪពុករបស់ពួកអ្នក ឬផ្ទះអ៊ំពូមីងមាខាងម្តាយរបស់ពួកអ្នក ឬអ្វីដែលអ្នកបានកាន់កាប់កូនសោររបស់វា ឬក៏ផ្ទះមិត្តភក្តិ(ជិតស្និទ្ធ)របស់ពួកអ្នក ។ ហើយក៏គ្មានទោសពៃរ៍អ្វីដែរក្នុងការទទួលទាន(ចំណីពីក្នុងផ្ទះទាំងនោះ)ជាលក្ខណៈជួបជុំគ្នា ឬជាលក្ខណៈដោយឡែក ។ ហើយនៅពេលដែលពួកអ្នកបានចូលទៅក្នុងផ្ទះនោះ ចូរពួកអ្នកឱ្យសាឡាមគ្នាទៅវិញទៅមកដោយពាក្យគោរពជូនពរដែលមានពរជ័យដ៏ល្អប្រសើរពីអល់ឡោះ ។ ដូច្នោះហើយអល់ឡោះបញ្ជាក់នូវអាយ៉ាត់ៗយ៉ាងច្បាស់លាស់សម្រាប់ពួកអ្នក សង្ឃឹមថាពួកអ្នកនឹងយល់ ។

أَنفُسِكُمْ تَحِيَّةً مِّنْ عِندِ ٱللَّهِ مُبَٰرَكَةً طَيِّبَةً ۚ
كَذَٰلِكَ يُبَيِّنُ ٱللَّهُ لَكُمُ ٱلْءَايَٰتِ
لَعَلَّكُمْ تَعْقِلُونَ ﴿٦١﴾

إِنَّمَا ٱلْمُؤْمِنُونَ ٱلَّذِينَ ءَامَنُوا۟ بِٱللَّهِ
وَرَسُولِهِۦ وَإِذَا كَانُوا۟ مَعَهُۥ عَلَىٰٓ أَمْرٍ جَامِعٍ
لَّمْ يَذْهَبُوا۟ حَتَّىٰ يَسْتَـْٔذِنُوهُ ۚ إِنَّ ٱلَّذِينَ
يَسْتَـْٔذِنُونَكَ أُو۟لَٰٓئِكَ ٱلَّذِينَ يُؤْمِنُونَ بِٱللَّهِ
وَرَسُولِهِۦ ۚ فَإِذَا ٱسْتَـْٔذَنُوكَ لِبَعْضِ شَأْنِهِمْ
فَأْذَن لِّمَن شِئْتَ مِنْهُمْ وَٱسْتَغْفِرْ لَهُمُ ٱللَّهَ ۚ
إِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ ﴿٦٢﴾

៦២-តាមពិតបណ្ដាអ្នកដែលមានជំនឿ(ពិតប្រាកដ)នោះ គឺបណ្ដាអ្នកដែលមានជំនឿនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់។ ហើយនៅពេលដែលពួកគេមានកិច្ចការប្រជុំជាមួយគាត់(មូហាំម៉ាត់) ពួកគេមិនចាកចេញពីអង្គប្រជុំឡើយ លុះត្រាតែពួកគេសុំការអនុញ្ញាតពីគាត់សិន។ ពិតប្រាកដណាស់ បណ្ដាអ្នកដែលសុំការអនុញ្ញាតពីអ្នក(មូហាំម៉ាត់) អ្នកទាំងនោះគឺជាបណ្ដាអ្នកដែលមានជំនឿនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់។ តែប្រសិនបើពួកគេបានសុំការអនុញ្ញាតពីអ្នកសម្រាប់កិច្ចការចាំបាច់ខ្លះៗរបស់ពួកគេ ចូរអ្នកអនុញ្ញាតឱ្យចំពោះអ្នកណាក្នុងចំណោមពួកគេដែលអ្នកចង់ ហើយអ្នកត្រូវសុំការអភ័យទោសពីអល់ឡោះឱ្យពួកគេផង។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

لَّا تَجْعَلُوا۟ دُعَآءَ ٱلرَّسُولِ بَيْنَكُمْ كَدُعَآءِ
بَعْضِكُم بَعْضًا ۚ قَدْ يَعْلَمُ ٱللَّهُ ٱلَّذِينَ
يَتَسَلَّلُونَ مِنكُمْ لِوَاذًا ۚ فَلْيَحْذَرِ ٱلَّذِينَ
يُخَالِفُونَ عَنْ أَمْرِهِۦٓ أَن تُصِيبَهُمْ فِتْنَةٌ أَوْ
يُصِيبَهُمْ عَذَابٌ أَلِيمٌ ﴿٦٣﴾

៦៣-ចូរពួកអ្នក(អ្នកមានជំនឿ)កុំហៅ(ឈ្មោះ)អ្នកនាំសារត្រង់ៗនៅក្នុងចំណោមពួកអ្នក ដូចជាការហៅ(ឈ្មោះត្រង់ៗ)របស់ពួកអ្នកទៅវិញទៅមកឱ្យសោះ។ ជាការពិតណាស់ អល់ឡោះដឹងចំពោះពួកដែលលួចគេចចេញ(ពីអង្គប្រជុំរបស់អ្នកនាំសារ)ក្នុងចំណោមពួកអ្នក។ ដូច្នេះចូរឱ្យពួកដែលប្រឆាំងនឹងបទបញ្ជារបស់គាត់ប្រុងប្រយ័ត្នចំពោះគ្រោះអាសន្ននឹងធ្លាក់លើពួកគេ ឬទារុណកម្មយ៉ាងឈឺចាប់ធ្លាក់លើពួកគេ។

أَلَآ إِنَّ لِلَّهِ مَا فِى ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۖ قَدْ
يَعْلَمُ مَآ أَنتُمْ عَلَيْهِ وَيَوْمَ يُرْجَعُونَ إِلَيْهِ
فَيُنَبِّئُهُم بِمَا عَمِلُوا۟ ۗ وَٱللَّهُ بِكُلِّ شَىْءٍ عَلِيمٌۢ ﴿٦٤﴾

៦៤-គ្មានការសង្ស័យឡើយ ពិតប្រាកដណាស់ អ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងផែនដី គឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ទ្រង់ពិតជាដឹងនូវអ្វីដែលពួកអ្នកប្រព្រឹត្តវា និង(ទ្រង់ដឹង)នៅថ្ងៃដែលពួកគេនឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់វិញ។ ហើយទ្រង់នឹងប្រាប់ពួកគេឱ្យដឹងនូវអ្វីដែលពួកគេបានប្រព្រឹត្ត(នៅក្នុងលោកិយនេះ)។ ហើយអល់ឡោះមហាដឹងនូវរាល់អ្វីៗទាំងអស់។

## سورة الفرقان

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

تَبَارَكَ ٱلَّذِي نَزَّلَ ٱلۡفُرۡقَانَ عَلَىٰ عَبۡدِهِۦ لِيَكُونَ لِلۡعَٰلَمِينَ نَذِيرًا ﴿١﴾

ٱلَّذِي لَهُۥ مُلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَلَمۡ يَتَّخِذۡ وَلَدًا وَلَمۡ يَكُن لَّهُۥ شَرِيكٞ فِي ٱلۡمُلۡكِ وَخَلَقَ كُلَّ شَيۡءٖ فَقَدَّرَهُۥ تَقۡدِيرٗا ﴿٢﴾

وَٱتَّخَذُواْ مِن دُونِهِۦٓ ءَالِهَةٗ لَّا يَخۡلُقُونَ شَيۡـٔٗا وَهُمۡ يُخۡلَقُونَ وَلَا يَمۡلِكُونَ لِأَنفُسِهِمۡ ضَرّٗا وَلَا نَفۡعٗا وَلَا يَمۡلِكُونَ مَوۡتٗا وَلَا حَيَوٰةٗ وَلَا نُشُورٗا ﴿٣﴾

وَقَالَ ٱلَّذِينَ كَفَرُوٓاْ إِنۡ هَٰذَآ إِلَّآ إِفۡكٌ ٱفۡتَرَىٰهُ وَأَعَانَهُۥ عَلَيۡهِ قَوۡمٌ ءَاخَرُونَۖ فَقَدۡ جَآءُو ظُلۡمٗا وَزُورٗا ﴿٤﴾

وَقَالُوٓاْ أَسَٰطِيرُ ٱلۡأَوَّلِينَ ٱكۡتَتَبَهَا فَهِيَ تُمۡلَىٰ عَلَيۡهِ بُكۡرَةٗ وَأَصِيلٗا ﴿٥﴾

قُلۡ أَنزَلَهُ ٱلَّذِي يَعۡلَمُ ٱلسِّرَّ فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ إِنَّهُۥ كَانَ غَفُورٗا رَّحِيمٗا ﴿٦﴾

## ជំពូកអាល់ហ្វួរកន

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-ទ្រង់មហាមានពរជ័យដែលបានបញ្ចុះអាល់ហ្វួរកន( គម្ពីរគួរអាន) ទៅចំពោះខ្ញុំរបស់ទ្រង់( មូហាំម៉ាត់) ដើម្បីឱ្យគាត់ដាស់តឿនព្រមានដល់ពិភពលោកទាំងអស់( ដូចជាមនុស្ស និងជិនជាដើម) ។

២-គឺជាអ្នកដែលមានអំណាចគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី ហើយទ្រង់គ្មានបុត្រ និងគ្មានអ្នកណាចូលរួមជាមួយទ្រង់ក្នុងការគ្រប់គ្រងឡើយ ។ ហើយទ្រង់បានបង្កើតនូវរាល់អ្វីៗទាំងអស់ បន្ទាប់មកបានកំណត់វាយ៉ាងច្បាស់លាស់ ។

៣-តែពួកគេបានយកព្រះនានាមកគោរពសក្ការៈផ្សេងពីទ្រង់ ដែលពួកវាមិនអាចបង្កើតអ្វីបានទាល់តែសោះ តែពួកវាវិញទេដែលត្រូវគេ( មនុស្សលោក) បង្កើតនោះ ។ ហើយព្រះទាំងនោះគ្មានលទ្ធភាពក្នុងការការពារគ្រោះថ្នាក់ និងផ្តល់ផលប្រយោជន៍ចំពោះខ្លួនឯងឡើយ ។ ហើយពួកគេគ្មានលទ្ធភាពធ្វើឱ្យស្លាប់ និងធ្វើឱ្យរស់ឡើយ ហើយក៏គ្មានលទ្ធភាពធ្វើឱ្យរស់ឡើងវិញដែរ( នៅថ្ងៃបរលោក) ។

៤-ហើយពួកដែលប្រឆាំងបាននិយាយថាៈ ( គម្ពីរគួរអាន) នេះគ្មានអ្វីក្រៅពីការភូតកុហក ដែលគេ( មូហាំម៉ាត់) បានប្រឌិតឡើង និងក្រុមផ្សេងៗទៀតបានជួយជ្រោមជ្រែងគេចំពោះការប្រឌិតនោះឡើយ ។ ដូច្នេះ ពួកគេពិតជាបានបំពាននិងភូតកុហក ។

៥-ពួកគេបាននិយាយថាៈ នេះគឺជារឿងព្រេងនិទានរបស់ពួកជំនាន់មុនខណៈដែលគេ( មូហាំម៉ាត់) បានចម្លងវា ហើយវាត្រូវគេសូត្រឱ្យគេស្តាប់ទាំងព្រឹកទាំងល្ងាច ។

៦-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ អ្នកដែលបានបញ្ចុះវា( គម្ពីរគួរអាន) គឺជាអ្នកដែលដឹងនូវប្រការអាថ៌កំបាំងនៅលើមេឃជាច្រើនជាន់ និងផែនដី ។ ពិតប្រាកដណាស់ ទ្រង់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

៧-ហើយពួកគេបាននិយាយទៀតថា: ហេតុអ្វីបានជាអ្នកនាំសារនេះចេះទទួលទានចំណីអាហារ និងដើរតាមផ្សារ(ដូចយើងដែរ)? ហេតុអ្វីបានជាគេមិនបញ្ចុះម៉ាឡាអ៊ីកាត់មួយរូបឱ្យគាត់ ដើម្បីធ្វើជាអ្នកព្រមានដាស់តឿន(មនុស្សលោក)ជាមួយគាត់?

وَقَالُواْ مَالِ هَٰذَا ٱلرَّسُولِ يَأۡكُلُ ٱلطَّعَامَ وَيَمۡشِي فِي ٱلۡأَسۡوَاقِ لَوۡلَآ أُنزِلَ إِلَيۡهِ مَلَكٞ فَيَكُونَ مَعَهُۥ نَذِيرًا ٧

៨-ឬ(ហេតុអ្វីបានជា)គេមិនផ្តល់កំណប់ឱ្យគាត់ ឬឱ្យគាត់មានសួនដំណាំផ្លែឈើដែលគាត់អាចទទួលទានពីវា? ហើយពួកដែលបំពានបាននិយាយថា: ពួកអ្នក(អ្នកមានជំនឿ)មិនតាមអ្នកណាក្រៅពីបុរសដែលត្រូវមន្តអាគមនោះឡើយ។

أَوۡ يُلۡقَىٰٓ إِلَيۡهِ كَنزٌ أَوۡ تَكُونُ لَهُۥ جَنَّةٞ يَأۡكُلُ مِنۡهَاۚ وَقَالَ ٱلظَّٰلِمُونَ إِن تَتَّبِعُونَ إِلَّا رَجُلٗا مَّسۡحُورًا ٨

៩-ចូរអ្នកវិភាគមើលចុះ! តើពួកគេបានប្រដូចជាឧទាហរណ៍ផ្សេងៗចំពោះអ្នកយ៉ាងដូចម្តេចខ្លះ? ដូច្នេះ ពួកគេបានវង្វេង ហើយពួកគេមិនអាចជួបមាគ៌ាត្រឹមត្រូវឡើយ។

ٱنظُرۡ كَيۡفَ ضَرَبُواْ لَكَ ٱلۡأَمۡثَٰلَ فَضَلُّواْ فَلَا يَسۡتَطِيعُونَ سَبِيلٗا ٩

១០-ទ្រង់មហាមានពរជ័យ ប្រសិនបើទ្រង់មានចេតនា ទ្រង់នឹងបង្កើតឱ្យអ្នកប្រសើរជាង(សួនដំណាំ ផ្លែឈើ)នោះទៅទៀត គឺសួនដំណាំផ្លែឈើដែលមានទន្លេជាច្រើនហូរពីក្រោមវា ហើយទ្រង់នឹងបង្កើតវិមានជាច្រើនសម្រាប់អ្នកថែមទៀត។

تَبَارَكَ ٱلَّذِيٓ إِن شَآءَ جَعَلَ لَكَ خَيۡرٗا مِّن ذَٰلِكَ جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ وَيَجۡعَل لَّكَ قُصُورَۢا ١٠

១១-ផ្ទុយទៅវិញ ពួកគេបានបដិសេធនឹងថ្ងៃបរលោក។ ហើយយើងបានរៀបចំភ្លើងនរកដែលឆាបឆេះដ៏សន្ធោសន្ធៅរួចជាស្រេចសម្រាប់អ្នកដែលបានបដិសេធនឹងថ្ងៃបរលោក។

بَلۡ كَذَّبُواْ بِٱلسَّاعَةِۖ وَأَعۡتَدۡنَا لِمَن كَذَّبَ بِٱلسَّاعَةِ سَعِيرًا ١١

១២-នៅពេលដែលវា(នរក)ឃើញពួកគេពីកន្លែងដែលឆ្ងាយ ពួកគេនឹងឮសំឡេងខឹង និងគ្រហឹមយ៉ាងខ្លាំងពីនរកនោះ។

إِذَا رَأَتۡهُم مِّن مَّكَانِۭ بَعِيدٖ سَمِعُواْ لَهَا تَغَيُّظٗا وَزَفِيرٗا ١٢

១៣-ហើយនៅពេលដែលពួកគេត្រូវបោះទម្លាក់ទៅក្នុងទីកន្លែងដែលចង្អៀតនៃភ្លើងនរកជាមួយនឹងដៃដែលត្រូវគេចង(ព្យួរទៅនឹងក) ទីនោះហើយដែលពួកគេស្រែកយំសុំឱ្យស្លាប់(ដើម្បីឱ្យរួចផុតពីការឈឺចាប់)។

وَإِذَآ أُلۡقُواْ مِنۡهَا مَكَانٗا ضَيِّقٗا مُّقَرَّنِينَ دَعَوۡاْ هُنَالِكَ ثُبُورٗا ١٣

១៤-នៅថ្ងៃនេះចូរពួកអ្នកកុំស្រែកសុំឱ្យស្លាប់តែមួយដងអ្វី តែពួកអ្នកគួរតែស្រែកសុំឱ្យស្លាប់ឱ្យបានច្រើនដង។

لَّا تَدۡعُواْ ٱلۡيَوۡمَ ثُبُورٗا وَٰحِدٗا وَٱدۡعُواْ ثُبُورٗا كَثِيرٗا ١٤

قُلۡ أَذَٰلِكَ خَيۡرٌ أَمۡ جَنَّةُ ٱلۡخُلۡدِ ٱلَّتِي وُعِدَ
ٱلۡمُتَّقُونَۚ كَانَتۡ لَهُمۡ جَزَآءً وَمَصِيرًا ١٥

១៥-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើ(ទារុណកម្ម)នោះ ប្រសើរជាង ឬមួយឋានសួគ៌អមតៈដែលគេ(អល់ឡោះ)បានសន្យាចំពោះបណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ(ប្រសើរជាង)? វាគឺជាការតបស្នងនិងជាកន្លែងវិលត្រឡប់សម្រាប់ពួកគេ។

لَّهُمۡ فِيهَا مَا يَشَآءُونَ خَٰلِدِينَۚ كَانَ
عَلَىٰ رَبِّكَ وَعۡدًا مَّسۡـُٔولاً ١٦

១៦-នៅក្នុងឋានសួគ៌នោះពួកគេនឹងទទួលបាននូវអ្វីៗដែលពួកគេប្រាថ្នាជារៀងរហូត។ វាជាការសន្យាមួយចំពោះម្ចាស់របស់អ្នកដែលត្រូវបំពេញ។

وَيَوۡمَ يَحۡشُرُهُمۡ وَمَا يَعۡبُدُونَ مِن دُونِ ٱللَّهِ
فَيَقُولُ ءَأَنتُمۡ أَضۡلَلۡتُمۡ عِبَادِي هَٰٓؤُلَآءِ أَمۡ هُمۡ
ضَلُّواْ ٱلسَّبِيلَ ١٧

១៧-ហើយនៅថ្ងៃ(បរលោក)ដែលទ្រង់នឹងប្រមូលផ្ដុំពួកគេ(ពួកមូស្ហរីគីន)និងអ្វីៗ(ព្រះនានា)ដែលពួកគេគោរពសក្ការៈផ្សេងពីអល់ឡោះ។ ហើយទ្រង់នឹងសួរ(ពួកវា)ថាៈ តើពួកអ្នកពិតជាបានធ្វើឱ្យខ្ញុំរបស់យើងទាំងអស់នេះវង្វេង ឬមួយពួកគេបានវង្វេងពីមាគ៌ាត្រឹមត្រូវដោយខ្លួនឯង?

قَالُواْ سُبۡحَٰنَكَ مَا كَانَ يَنۢبَغِي لَنَآ أَن نَّتَّخِذَ
مِن دُونِكَ مِنۡ أَوۡلِيَآءَ وَلَٰكِن مَّتَّعۡتَهُمۡ
وَءَابَآءَهُمۡ حَتَّىٰ نَسُواْ ٱلذِّكۡرَ وَكَانُواْ قَوۡمَۢا
بُورًا ١٨

១៨-ពួកវាបានតបវិញថាៈ អល់ឡោះមហាស្អាតស្អំ! វាមិនសក្ដិសមឡើយចំពោះពួកយើងដែលយកអ្នកគាំពារនានាផ្សេងពីទ្រង់។ ក៏ប៉ុន្តែទ្រង់វិញទេដែលបានផ្ដល់ការសោយសុខដល់ពួកគេ និងជីដូនជីតារបស់ពួកគេ រហូតដល់ពួកគេបានភ្លេចនូវការរំលឹក(ទៅចំពោះទ្រង់) ហើយពួកគេបានក្លាយជាក្រុមដែលវិនាសអន្តរាយ។

فَقَدۡ كَذَّبُوكُم بِمَا تَقُولُونَ فَمَا
تَسۡتَطِيعُونَ صَرۡفًا وَلَا نَصۡرًاۚ وَمَن يَظۡلِم
مِّنكُمۡ نُذِقۡهُ عَذَابًا كَبِيرًا ١٩

១៩-ដូច្នេះ ពួកវា(ព្រះនានា)ពិតជាបានបដិសេធនឹងពួកអ្នកនូវអ្វីដែលពួកអ្នកនិយាយ(ថាពួកវានោះជាព្រះ)។ ហើយពួកអ្នកមិនអាចគេចផុត(ពីទារុណកម្មរបស់យើង)បានឡើយ ហើយក៏គ្មានអ្នកណាជួយដែរ។ ហើយអ្នកណាដែលបំពានក្នុងចំណោមពួកអ្នកនោះ យើងនឹងឱ្យគេភ្លក្សនូវទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។

وَمَآ أَرۡسَلۡنَا قَبۡلَكَ مِنَ ٱلۡمُرۡسَلِينَ
إِلَّآ إِنَّهُمۡ لَيَأۡكُلُونَ ٱلطَّعَامَ وَيَمۡشُونَ فِي
ٱلۡأَسۡوَاقِۗ وَجَعَلۡنَا بَعۡضَكُمۡ لِبَعۡضٖ فِتۡنَةً
أَتَصۡبِرُونَۗ وَكَانَ رَبُّكَ بَصِيرًا ٢٠

២០-ហើយយើងមិនដែលបានបញ្ជូនមុនអ្នក(មូហាំម៉ាត់)នូវបណ្ដាអ្នកនាំសារណាក្រៅពីពួកគេ(ជាមនុស្សធម្មតា)ចេះទទួលទានចំណីអាហារ និងដើរតាមផ្សារនោះឡើយ។ ហើយយើងបានធ្វើការសាកល្បងចំពោះពួកអ្នកទៅវិញទៅមក(នូវប្រការល្អ ឬអាក្រក់ មានឬក្រ ឈឺ ឬ ជា...)។ តើពួកអ្នកនឹងមានការអត់ធ្មត់ដែរឬទេ? ហើយម្ចាស់របស់អ្នកជាអ្នកឃើញបំផុត(នូវអ្វីៗទាំងអស់)។

២១-ហើយពួកដែលមិនសង្ឃឹមថានឹងជួបយើងបាននិយាយថា: ហេតុអ្វីបានជាគេមិនបញ្ចុះម៉ាឡាអ៊ីកាត់មកឱ្យពួកយើង ឬឱ្យពួកយើងឃើញម្ចាស់របស់ពួកយើង? ជាការពិតណាស់ ពួកគេមានមោទភាពចំពោះខ្លួនឯង និងមានអំនួតក្អេងក្អាងហួសប្រមាណ។

۞ وَقَالَ ٱلَّذِينَ لَا يَرۡجُونَ لِقَآءَنَا لَوۡلَآ أُنزِلَ عَلَيۡنَا ٱلۡمَلَٰٓئِكَةُ أَوۡ نَرَىٰ رَبَّنَاۗ لَقَدِ ٱسۡتَكۡبَرُواْ فِيٓ أَنفُسِهِمۡ وَعَتَوۡ عُتُوّٗا كَبِيرٗا ٢١

២២-នៅថ្ងៃ(បរលោក)ដែលពួកគេនឹងឃើញម៉ាឡាអ៊ីកាត់(ពោលទៅកាន់ពួកគេថា) គ្មានដំណឹងរីករាយចំពោះជនដែលប្រព្រឹត្តអាក្រក់នៅថ្ងៃនោះឡើយ ហើយពួកគេនឹងនិយាយទៀតថា: (ឋានសួគ៌)គឺជាកន្លែងដែលត្រូវបានគេហាមឃាត់ចំពោះពួកអ្នក។

يَوۡمَ يَرَوۡنَ ٱلۡمَلَٰٓئِكَةَ لَا بُشۡرَىٰ يَوۡمَئِذٖ لِّلۡمُجۡرِمِينَ وَيَقُولُونَ حِجۡرٗا مَّحۡجُورٗا ٢٢

២៣-ហើយយើងបានត្រឡប់ទៅរកអ្វីដែលពួកគេបានសាងអំពីប្រការល្អ រួចយើងធ្វើឱ្យវារលាយសាបសូន្យដូចធូលីដែលរសាត់តាមខ្យល់ ។

وَقَدِمۡنَآ إِلَىٰ مَا عَمِلُواْ مِنۡ عَمَلٖ فَجَعَلۡنَٰهُ هَبَآءٗ مَّنثُورًا ٢٣

២៤-នៅថ្ងៃនោះបណ្ដាអ្នកឋានសួគ៌ គឺមានកន្លែងស្នាក់នៅដ៏ល្អប្រសើរ និងកន្លែងសម្រាកដ៏ប្រពៃបំផុត។

أَصۡحَٰبُ ٱلۡجَنَّةِ يَوۡمَئِذٍ خَيۡرٞ مُّسۡتَقَرّٗا وَأَحۡسَنُ مَقِيلٗا ٢٤

២៥-ហើយ(ចូរចងចាំ)នៅថ្ងៃដែលមេឃនឹងបែកចេញជាមួយនឹងដុំពពកជាច្រើន ហើយគេបានបញ្ចុះម៉ាឡាអ៊ីកាត់មកជាបន្តបន្ទាប់។

وَيَوۡمَ تَشَقَّقُ ٱلسَّمَآءُ بِٱلۡغَمَٰمِ وَنُزِّلَ ٱلۡمَلَٰٓئِكَةُ تَنزِيلًا ٢٥

២៦-ការគ្រប់គ្រងដ៏ពិតប្រាកដនៅថ្ងៃនោះគឺជាកម្មសិទ្ធិរបស់ម្ចាស់មហាសប្បុរស។ ហើយវាគឺជាថ្ងៃដែលលំបាកជាទីបំផុតចំពោះពួកដែលគ្មានជំនឿ។

ٱلۡمُلۡكُ يَوۡمَئِذٍ ٱلۡحَقُّ لِلرَّحۡمَٰنِۚ وَكَانَ يَوۡمًا عَلَى ٱلۡكَٰفِرِينَ عَسِيرٗا ٢٦

២៧-ហើយ(ចូរចងចាំ)នៅថ្ងៃដែលអ្នកបំពានខាំដៃទាំងពីររបស់គេ(ព្រោះសោកស្ដាយពីកំហុសរបស់ខ្លួន)ដោយនិយាយថា: ឱខ្លួនខ្ញុំអើយ! ខ្ញុំគួរតែបានជ្រើសរើសផ្លូវដែលត្រឹមត្រូវជាមួយនឹងអ្នកនាំសារ។

وَيَوۡمَ يَعَضُّ ٱلظَّالِمُ عَلَىٰ يَدَيۡهِ يَقُولُ يَٰلَيۡتَنِي ٱتَّخَذۡتُ مَعَ ٱلرَّسُولِ سَبِيلٗا ٢٧

២៨-ឱអនិច្ចាខ្លួនខ្ញុំអើយ! មិនគួរណាខ្ញុំបានយកអ្នក(អ្នកប្រឆាំងឬស្ទៀតន)ណាម្នាក់ធ្វើជាមិត្តភក្តិឡើយ។

يَٰوَيۡلَتَىٰ لَيۡتَنِي لَمۡ أَتَّخِذۡ فُلَانًا خَلِيلٗا ٢٨

២៩-ជាការពិតណាស់ គេ(មិត្តភក្តិ)បានធ្វើឱ្យខ្ញុំវង្វេងចេញពីការរំលឹក(គម្ពីរគួរអាន)បន្ទាប់ពីវាបានមកដល់ខ្ញុំហើយ។ ហើយស្ទៀតន

لَّقَدۡ أَضَلَّنِي عَنِ ٱلذِّكۡرِ بَعۡدَ إِذۡ جَآءَنِيۗ

وَكَانَ ٱلشَّيْطَٰنُ لِلْإِنسَٰنِ خَذُولًا ﴿٢٩﴾

គឺជាអ្នកដែលបានបោកប្រាស់ចំពោះមនុស្សលោក ។

وَقَالَ ٱلرَّسُولُ يَٰرَبِّ إِنَّ قَوْمِى ٱتَّخَذُوا۟ هَٰذَا ٱلْقُرْءَانَ مَهْجُورًا ﴿٣٠﴾

៣០-ហើយអ្នកនាំសារបានពោលថា: ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ក្រុមរបស់ខ្ញុំបានបោះបង់ចោលគម្ពីរគួរអាននេះ( ដោយមិនអនុវត្តតាមវាឡើយ) ។

وَكَذَٰلِكَ جَعَلْنَا لِكُلِّ نَبِىٍّ عَدُوًّا مِّنَ ٱلْمُجْرِمِينَ ۗ وَكَفَىٰ بِرَبِّكَ هَادِيًا وَنَصِيرًا ﴿٣١﴾

៣១-ហើយដូច្នេះដែរយើងបានបង្កើតចំពោះរាល់ៗណាពីឱ្យមានសត្រូវដែលស្ថិតក្នុងចំណោមពួកដែលសាងបាបកម្ម ។ គ្រប់គ្រាន់ហើយដែលម្ចាស់របស់អ្នកជាអ្នកចង្អុលបង្ហាញនិងជាអ្នកជួយនោះ ។

وَقَالَ ٱلَّذِينَ كَفَرُوا۟ لَوْلَا نُزِّلَ عَلَيْهِ ٱلْقُرْءَانُ جُمْلَةً وَٰحِدَةً ۚ كَذَٰلِكَ لِنُثَبِّتَ بِهِۦ فُؤَادَكَ ۖ وَرَتَّلْنَٰهُ تَرْتِيلًا ﴿٣٢﴾

៣២-ហើយពួកដែលប្រឆាំងបាននិយាយថា:ហេតុអ្វីបានជាគេមិនបញ្ចុះគម្ពីរគួរអានទៅឱ្យគេ( មូហាំម៉ាត់) ទាំងមូលតែម្តងទៅ? ( យើងបានបញ្ចុះមួយផ្នែកៗ) ដូច្នេះ គឺដើម្បីយើងនឹងពង្រឹងចិត្តរបស់អ្នកឱ្យកាន់តែនឹងនរនឹងវា ។ ហើយយើងបានបកស្រាយដល់គេបន្តិចម្តងៗយ៉ាងក្បោះក្បាយ ។

وَلَا يَأْتُونَكَ بِمَثَلٍ إِلَّا جِئْنَٰكَ بِٱلْحَقِّ وَأَحْسَنَ تَفْسِيرًا ﴿٣٣﴾

៣៣-ហើយពួកគេមិនអាចនាំមកឱ្យអ្នកនូវឧទាហរណ៍( ចំណោតបញ្ហា) ណាមួយឡើយ លើកលែងតែយើងបាននាំមកឱ្យអ្នកនូវការពិត និងការបកស្រាយដ៏ប្រសើរបំផុត ។

ٱلَّذِينَ يُحْشَرُونَ عَلَىٰ وُجُوهِهِمْ إِلَىٰ جَهَنَّمَ أُو۟لَٰٓئِكَ شَرٌّ مَّكَانًا وَأَضَلُّ سَبِيلًا ﴿٣٤﴾

៣៤-( ពួកទាំងនោះគឺជា) ពួកដែលត្រូវគេប្រមូលផ្តុំដោយអូសផ្កាប់មុខទៅរកនរកជើហាន់ណាំ ។ ពួកទាំងនោះគឺស្ថិតក្នុងសភាពដ៏អាក្រក់និងវង្វេងបំផុតពីមាគ៌ា( ដែលត្រឹមត្រូវ) ។

وَلَقَدْ ءَاتَيْنَا مُوسَى ٱلْكِتَٰبَ وَجَعَلْنَا مَعَهُۥٓ أَخَاهُ هَٰرُونَ وَزِيرًا ﴿٣٥﴾

៣៥-ហើយជាការពិតណាស់ យើងបានប្រទានឱ្យមូសានូវគម្ពីរ( តាវ៉រត) ហើយយើងក៏បានឱ្យហារូនដែលជាបងរបស់គេនៅជាមួយគេធ្វើជាអ្នកជំនួយការ ។

فَقُلْنَا ٱذْهَبَآ إِلَى ٱلْقَوْمِ ٱلَّذِينَ كَذَّبُوا۟ بِـَٔايَٰتِنَا فَدَمَّرْنَٰهُمْ تَدْمِيرًا ﴿٣٦﴾

៣៦-ហើយយើងបានមានបន្ទូល( ទៅកាន់គេទាំងពីរ) ថា: ចូរអ្នកទាំងពីរធ្វើដំណើរទៅកាន់ក្រុម( ហ្វៀរអោន) ដែលបានបដិសេធនឹងបណ្តាភស្តុតាងរបស់យើងចុះ ។ បន្ទាប់មកយើងក៏បានបំផ្លាញពួកគេឱ្យវិនាសសាបសូន្យ ។

وَقَوْمَ نُوحٍ لَّمَّا كَذَّبُوا۟ ٱلرُّسُلَ أَغْرَقْنَـٰهُمْ
وَجَعَلْنَـٰهُمْ لِلنَّاسِ ءَايَةً ۖ وَأَعْتَدْنَا
لِلظَّـٰلِمِينَ عَذَابًا أَلِيمًا ﴿٣٧﴾

៣៧-ហើយក្រុមរបស់នួហ នៅពេលដែលពួកគេបានបដិសេធនឹងបណ្ដាអ្នកនាំសារ យើងបានពន្លិចពួកគេ ហើយយើងក៏បានយកពួកគេធ្វើជាមេរៀនសម្រាប់មនុស្សលោក។ ហើយយើងបានរៀបចំសម្រាប់ពួកដែលបំពាននូវទារុណកម្មដ៏ឈឺចាប់បំផុត(នៅថ្ងៃបរលោក)។

وَعَادًا وَثَمُودَا۟ وَأَصْحَـٰبَ ٱلرَّسِّ وَقُرُونًۢا بَيْنَ
ذَٰلِكَ كَثِيرًا ﴿٣٨﴾

៣៨-ហើយ(យើងបានបំផ្លាញ)ក្រុមអាដ សាមូដនិងក្រុមរ៉ស(ក្រុមរបស់ស៊្លូអែប) ហើយនិងក្រុមមនុស្សជាច្រើនជំនាន់ទៀតរវាងពួកគេទាំងនោះ។

وَكُلًّا ضَرَبْنَا لَهُ ٱلْأَمْثَـٰلَ ۖ وَكُلًّا تَبَّرْنَا
تَتْبِيرًا ﴿٣٩﴾

៣៩-ហើយរាល់ៗក្រុម យើងបានលើកឧទាហរណ៍ជាច្រើនបង្ហាញដល់គេ។ ហើយរាល់ៗក្រុមនោះ យើងក៏បានបំផ្លាញឱ្យវិនាសសាបសូន្យដែរ។

وَلَقَدْ أَتَوْا۟ عَلَى ٱلْقَرْيَةِ ٱلَّتِىٓ أُمْطِرَتْ مَطَرَ
ٱلسَّوْءِ ۚ أَفَلَمْ يَكُونُوا۟ يَرَوْنَهَا ۚ بَلْ كَانُوا۟
لَا يَرْجُونَ نُشُورًا ﴿٤٠﴾

៤០-ហើយជាការពិតណាស់ ពួកគេ(ពួកមូស្ហ៊ីគីនម៉ាក្កះ)បានធ្វើដំណើរឆ្លងកាត់ភូមិមួយដែលត្រូវបានគេបំផ្លាញដោយទឹកភ្លៀង(ភ្លៀងអំពីដុំថ្ម)ដ៏កំណាច។ តើពួកគេមិនបានឃើញ(ពីភាពវិនាសនៃ)ភូមិនោះទេឬ? ផ្ទុយទៅវិញពួកគេមិនធ្លាប់រំពឹងថាមានការរស់ឡើងវិញឡើយ(នៅថ្ងៃបរលោក)។

وَإِذَا رَأَوْكَ إِن يَتَّخِذُونَكَ إِلَّا هُزُوًا أَهَـٰذَا
ٱلَّذِى بَعَثَ ٱللَّهُ رَسُولًا ﴿٤١﴾

៤១-ហើយនៅពេលដែលពួកគេបានឃើញអ្នក(មូហាំម៉ាត់) ពួកគេតែងតែចំអកឱ្យថាៈ តើម្នាក់នេះឬដែល(អះអាងថា)អល់ឡោះបានតែងតាំងជាអ្នកនាំសារនោះ?

إِن كَادَ لَيُضِلُّنَا عَنْ ءَالِهَتِنَا لَوْلَآ أَن
صَبَرْنَا عَلَيْهَا ۚ وَسَوْفَ يَعْلَمُونَ حِينَ
يَرَوْنَ ٱلْعَذَابَ مَنْ أَضَلُّ سَبِيلًا ﴿٤٢﴾

៤២-ពិតប្រាកដណាស់ គេ(មូហាំម៉ាត់)ស្ទើរតែបានធ្វើឱ្យពួកយើងវង្វេងពីព្រះនានារបស់ពួកយើងទៅហើយ ប្រសិនបើពួកយើងមិនបានអត់ធ្មត់(ក្នុងការគោរពសក្ការៈ)ចំពោះព្រះនានាទេនោះ។ ហើយពួកគេ(ពួកមូស្ហ៊ីគីន)នឹងដឹងនៅពេលដែលពួកគេឃើញទារុណកម្ម ថាតើនរណាដែលវង្វេងជាងគេពីមាគ៌ា(ដ៏ត្រឹមត្រូវ)នោះ?

أَرَءَيْتَ مَنِ ٱتَّخَذَ إِلَـٰهَهُۥ هَوَىٰهُ أَفَأَنتَ تَكُونُ
عَلَيْهِ وَكِيلًا ﴿٤٣﴾

៤៣-តើអ្នក(មូហាំម៉ាត់)បានឃើញអ្នកដែលបានយកចំណង់របស់គេធ្វើជាព្រះរបស់គេឬទេ? ដូច្នេះ តើអ្នកជាអ្នកទទួលខុសត្រូវចំពោះគេឬ?

៤៤-ឬមួយអ្នកគិតថា ពួកគេភាគច្រើនពិតជាស្តាប់ ឬត្រិះរិះពិចារណាឬ? ពួកគេគ្មានអ្វីក្រៅពីដូចសត្វធាតុនោះឡើយ ។ ផ្ទុយទៅវិញពួកគេវង្វេងពីមាគ៌ា(ដ៏ត្រឹមត្រូវ)ជាងនេះទៅទៀត ។

أَمۡ تَحۡسَبُ أَنَّ أَكۡثَرَهُمۡ يَسۡمَعُونَ أَوۡ يَعۡقِلُونَۚ إِنۡ هُمۡ إِلَّا كَٱلۡأَنۡعَٰمِۖ بَلۡ هُمۡ أَضَلُّ سَبِيلًا ﴿٤٤﴾

៤៥-តើអ្នកមិនបានមើលឃើញទេថា តើម្ចាស់របស់អ្នកបានបន្លាយស្រមោលយ៉ាងដូចម្តេច(នៅពេលព្រលឹមរហូតដល់ថ្ងៃរះ)? ប្រសិនបើទ្រង់មានចេតនា ទ្រង់ពិតជាធ្វើឱ្យវា(ស្រមោល)នៅនឹងមួយកន្លែង(គ្មានពន្លឺថ្ងៃ) ។ ប៉ុន្តែក្រោយមកយើងធ្វើឱ្យមានព្រះអាទិត្យជាសញ្ញាចំពោះវា ។

أَلَمۡ تَرَ إِلَىٰ رَبِّكَ كَيۡفَ مَدَّ ٱلظِّلَّ وَلَوۡ شَآءَ لَجَعَلَهُۥ سَاكِنٗا ثُمَّ جَعَلۡنَا ٱلشَّمۡسَ عَلَيۡهِ دَلِيلٗا ﴿٤٥﴾

៤៦-បន្ទាប់មក យើងបានដកយកវាមកកាន់យើងវិញបន្តិចម្តងៗ(ថ្ងៃកាន់តែខ្ពស់ស្រមោលកាន់តែបាត់បង់) ។

ثُمَّ قَبَضۡنَٰهُ إِلَيۡنَا قَبۡضٗا يَسِيرٗا ﴿٤٦﴾

៤៧-ហើយទ្រង់ជាអ្នកដែលបានធ្វើឱ្យមានពេលយប់ជាការបិទបាំង និង(ធ្វើឱ្យមាន)ពេលដេកជាការសម្រាកសម្រាប់ពួកអ្នក ។ ហើយទ្រង់ធ្វើឱ្យមានពេលថ្ងៃ(សម្រាប់ឱ្យពួកអ្នក)ក្រោកពីដំណេក(ដើម្បីរកស៊ីចិញ្ចឹមជីវិត) ។

وَهُوَ ٱلَّذِي جَعَلَ لَكُمُ ٱلَّيۡلَ لِبَاسٗا وَٱلنَّوۡمَ سُبَاتٗا وَجَعَلَ ٱلنَّهَارَ نُشُورٗا ﴿٤٧﴾

៤៨-ហើយទ្រង់ជាអ្នកដែលបានបញ្ជូនខ្យល់ជាដំណឹងល្អមួយមុននឹងក្តីមេត្តាករុណារបស់ទ្រង់(ទឹកភ្លៀង)មកដល់ ។ ហើយយើងបានបញ្ចុះទឹកភ្លៀងដ៏ជ្រះស្អាតពីលើមេឃ ។

وَهُوَ ٱلَّذِيٓ أَرۡسَلَ ٱلرِّيَٰحَ بُشۡرَۢا بَيۡنَ يَدَيۡ رَحۡمَتِهِۦۚ وَأَنزَلۡنَا مِنَ ٱلسَّمَآءِ مَآءٗ طَهُورٗا ﴿٤٨﴾

៤៩-ដើម្បីយើងធ្វើឱ្យដីដែលស្លាប់(គ្មានជីជាតិ)មានជីវិត(ជីជាតិ)ឡើងវិញដោយសារវា(ទឹកភ្លៀង) ។ ហើយយើងបានផ្តល់វាឱ្យសត្វពាហនៈ និងមនុស្សលោកហើយនិងអ្វីៗជាច្រើនដែលយើងបានបង្កើត ។

لِّنُحۡـِۧيَ بِهِۦ بَلۡدَةٗ مَّيۡتٗا وَنُسۡقِيَهُۥ مِمَّا خَلَقۡنَآ أَنۡعَٰمٗا وَأَنَاسِيَّ كَثِيرٗا ﴿٤٩﴾

៥០-ហើយជាការពិតណាស់ យើងបានបញ្ចុះវា(ទឹកភ្លៀង)ទៅក្នុងចំណោមពួកគេ(ម្តងនៅតំបន់នេះ ម្តងនៅតំបន់នោះ) ដើម្បីឱ្យពួកគេរំលឹកដឹងគុណ(មកចំពោះយើង) ។ ប៉ុន្តែមនុស្សលោកភាគច្រើនមិនទទួលស្គាល់ និងរមិលគុណ ។

وَلَقَدۡ صَرَّفۡنَٰهُ بَيۡنَهُمۡ لِيَذَّكَّرُواْ فَأَبَىٰٓ أَكۡثَرُ ٱلنَّاسِ إِلَّا كُفُورٗا ﴿٥٠﴾

وَلَوۡ شِئۡنَا لَبَعَثۡنَا فِي كُلِّ قَرۡيَةٖ نَّذِيرٗا ٥١

៥១-ហើយប្រសិនបើយើងមានចេតនា យើងពិតជាបញ្ជូនអ្នកដាស់តឿនព្រមាន(អ្នកនាំសារ)ទៅរាល់ៗភូមិស្រុកជាមិនខាន។

فَلَا تُطِعِ ٱلۡكَٰفِرِينَ وَجَٰهِدۡهُم بِهِۦ
جِهَادٗا كَبِيرٗا ٥٢

៥២-ដូច្នេះចូរអ្នកកុំគោរពតាមពួកប្រឆាំង តែអ្នកត្រូវតស៊ូឱ្យបានខ្លាំងក្លាជាមួយពួកគេ ដើម្បីផ្សព្វផ្សាយវា(គម្ពីរគួរអាន)។

۞ وَهُوَ ٱلَّذِي مَرَجَ ٱلۡبَحۡرَيۡنِ هَٰذَا عَذۡبٞ
فُرَاتٞ وَهَٰذَا مِلۡحٌ أُجَاجٞ وَجَعَلَ بَيۡنَهُمَا
بَرۡزَخٗا وَحِجۡرٗا مَّحۡجُورٗا ٥٣

៥៣-ហើយទ្រង់ជាអ្នកដែលបានធ្វើឱ្យសមុទ្រពីរនៅជាប់គ្នា ដោយមួយជាទឹកសាបឆ្ងាញ់ពិសារ និងមួយទៀតប្រៃល្វីង។ ហើយទ្រង់បានធ្វើឱ្យមានរនាំងបាំងរវាងវាទាំងពីរ និងរារាំងមិនឱ្យជ្រាបចូលគ្នា។

وَهُوَ ٱلَّذِي خَلَقَ مِنَ ٱلۡمَآءِ بَشَرٗا فَجَعَلَهُۥ
نَسَبٗا وَصِهۡرٗاۗ وَكَانَ رَبُّكَ قَدِيرٗا ٥٤

៥៤-ហើយទ្រង់ជាអ្នកដែលបានបង្កើតមនុស្សលោកអំពីទឹក(ទឹកកាម) ហើយទ្រង់បានបង្កើតវាឱ្យមានពូជពង្ស និងសាច់ថ្លៃ។ ហើយម្ចាស់របស់អ្នកជាអ្នកដែលមានអានុភាពបំផុត។

وَيَعۡبُدُونَ مِن دُونِ ٱللَّهِ مَا لَا يَنفَعُهُمۡ وَلَا
يَضُرُّهُمۡۗ وَكَانَ ٱلۡكَافِرُ عَلَىٰ رَبِّهِۦ ظَهِيرٗا ٥٥

៥៥-តែពួកគេបែរជាគោរពសក្ការៈផ្សេងពីអល់ឡោះនូវអ្វីដែលពុំអាចផ្តល់ប្រយោជន៏ ហើយផ្តល់គ្រោះថ្នាក់ដល់ពួកគេទៅវិញ។ ហើយអ្នកដែលប្រឆាំងគឺជាអ្នកដែលជួយគាំទ្រ(ស្ហៃតន)ប្រឆាំងនឹងម្ចាស់របស់គេ។

وَمَآ أَرۡسَلۡنَٰكَ إِلَّا مُبَشِّرٗا وَنَذِيرٗا ٥٦

៥៦-ហើយយើងមិនបានបញ្ជូនអ្នកមកឡើយ លើកលែងតែជាអ្នកផ្តល់ដំណឹងរីករាយ និងជាអ្នកដាស់តឿនព្រមាន(ដល់មនុស្សលោក)តែប៉ុណ្ណោះ។

قُلۡ مَآ أَسۡـَٔلُكُمۡ عَلَيۡهِ مِنۡ أَجۡرٍ إِلَّا مَن شَآءَ
أَن يَتَّخِذَ إِلَىٰ رَبِّهِۦ سَبِيلٗا ٥٧

៥៧-ចូរអ្នកពោលថាៈ ខ្ញុំមិនសុំពីពួកអ្នកនូវការតបស្នងពីវា(ការអំពាវនាវ)ឡើយ លើកលែងតែអ្នកណាដែលចង់ប្រកាន់យកមាគ៌ា(ដ៏ត្រឹមត្រូវ)ឆ្ពោះទៅកាន់ម្ចាស់របស់គេប៉ុណ្ណោះ។

وَتَوَكَّلۡ عَلَى ٱلۡحَيِّ ٱلَّذِي لَا يَمُوتُ وَسَبِّحۡ
بِحَمۡدِهِۦۚ وَكَفَىٰ بِهِۦ بِذُنُوبِ عِبَادِهِۦ
خَبِيرًا ٥٨

៥៨-ហើយចូរអ្នក(មូហាំម៉ាត់)ប្រគល់ការទុកចិត្តលើអ្នកដែលរស់ អ្នកដែលមិនស្លាប់(អល់ឡោះ) ហើយអ្នកត្រូវលើកតម្កើងដោយការសរសើរចំពោះទ្រង់។ គ្រប់គ្រាន់ហើយដែលទ្រង់ជាអ្នកដឹងបំផុតចំពោះបាបកម្មទាំងឡាយនៃខ្ញុំរបស់ទ្រង់។

ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ وَمَا بَيۡنَهُمَا

៥៩-គឺអ្នកដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដីនិងអ្វីៗដែលនៅចន្លោះវាទាំងពីរក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់

فِى سِتَّةِ أَيَّامٍ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ ۚ ٱلرَّحْمَـٰنُ فَسْـَٔلْ بِهِۦ خَبِيرًا ٥٩

បានស្ថិតលើអារ៉ស្ហ ។ (ទ្រង់)គឺជាម្ចាស់ដែលមហាសប្បុរស ដូច្នេះ ចូរអ្នកសួរទ្រង់ (អំពីរឿងនោះ)ដែលមហាដឹងជ្រួតជ្រាបចុះ ។

وَإِذَا قِيلَ لَهُمُ ٱسْجُدُوا۟ لِلرَّحْمَـٰنِ قَالُوا۟ وَمَا ٱلرَّحْمَـٰنُ أَنَسْجُدُ لِمَا تَأْمُرُنَا وَزَادَهُمْ نُفُورًا ۩ ٦٠

៦០-ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកគេថា: ចូរពួកអ្នកស៊ូជូតចំពោះម្ចាស់មហាសប្បុរសនោះ ពួកគេបានតបវិញថា: តើម្ចាស់មហាសប្បុរសជាអ្វី? តើឱ្យពួកយើងស៊ូជូតនូវអ្វីដែលអ្នក(មូហាំម៉ាត់)បានបញ្ជាពួកយើងឬ? ផ្ទុយទៅវិញពួកគេកាន់តែឃ្លាតឆ្ងាយ(ពីជំនឿ)ថែមទៀត ។

تَبَارَكَ ٱلَّذِى جَعَلَ فِى ٱلسَّمَآءِ بُرُوجًا وَجَعَلَ فِيهَا سِرَٰجًا وَقَمَرًا مُّنِيرًا ٦١

៦១-ទ្រង់មហាមានពរជ័យ ដែលបានបង្កើតឱ្យមានផ្កាយជាច្រើននៅលើមេឃ និងបង្កើតឱ្យមានព្រះអាទិត្យ និងព្រះច័ន្ទជាពន្លឺនៅលើវា ។

وَهُوَ ٱلَّذِى جَعَلَ ٱلَّيْلَ وَٱلنَّهَارَ خِلْفَةً لِّمَنْ أَرَادَ أَن يَذَّكَّرَ أَوْ أَرَادَ شُكُورًا ٦٢

៦២-ហើយទ្រង់គឺជាអ្នកដែលបានបង្កើតឱ្យមានពេលយប់និងពេលថ្ងៃដោយមានការផ្លាស់គ្នាសម្រាប់អ្នកដែលចង់រំលឹក ឬចង់ថ្លែងអំណរគុណ(ចំពោះអល់ឡោះ) ។

وَعِبَادُ ٱلرَّحْمَـٰنِ ٱلَّذِينَ يَمْشُونَ عَلَى ٱلْأَرْضِ هَوْنًا وَإِذَا خَاطَبَهُمُ ٱلْجَـٰهِلُونَ قَالُوا۟ سَلَـٰمًا ٦٣

៦៣-ហើយបណ្ដាខ្ញុំ(ដែលល្អត្រឹមត្រូវ)នៃម្ចាស់មហាសប្បុរស គឺជាពួកដែលធ្វើដំណើរនៅលើផែនដីដោយកាយវិការសុភាពរាប-សា ហើយនៅពេលដែលពួកល្ងង់ខ្លៅនិយាយ(ពាក្យអសុរស)ទៅកាន់ពួកគេ ពួកគេបានតបវិញនូវពាក្យសំដីទន់ភ្លន់សុភាពរាបសា ។

وَٱلَّذِينَ يَبِيتُونَ لِرَبِّهِمْ سُجَّدًا وَقِيَـٰمًا ٦٤

៦៤-និងបណ្ដាអ្នកដែលចំណាយពេលវេលានៅពេលយប់ ដើម្បីស៊ូជូតនិងឈរគោរពសក្ការៈចំពោះម្ចាស់របស់ពួកគេ ។

وَٱلَّذِينَ يَقُولُونَ رَبَّنَا ٱصْرِفْ عَنَّا عَذَابَ جَهَنَّمَ ۖ إِنَّ عَذَابَهَا كَانَ غَرَامًا ٦٥

៦៥-និងបណ្ដាអ្នកដែលបួងសួងសុំថា: ឱម្ចាស់របស់ពួកយើងខ្ញុំ! សូមទ្រង់មេត្តាបញ្ចៀសពួកយើងខ្ញុំពីទារុណកម្មនរកជើហាន់-ណាំផង ។ ពិតប្រាកដណាស់ ទារុណកម្មរបស់វាគឺអមតៈ ។

إِنَّهَا سَآءَتْ مُسْتَقَرًّا وَمُقَامًا ٦٦

៦៦-ពិតប្រាកដណាស់ វាជាទីលំនៅនិងជាកន្លែងស្នាក់អាស្រ័យមួយដ៏អាក្រក់បំផុត ។

وَٱلَّذِينَ إِذَآ أَنفَقُوا۟ لَمْ يُسْرِفُوا۟ وَلَمْ يَقْتُرُوا۟ وَكَانَ بَيْنَ ذَٰلِكَ قَوَامًا ٦٧

៦៧-និងបណ្ដាអ្នកដែលនៅពេលពួកគេបានបរិច្ចាគ(ទ្រព្យសម្បត្តិ)គឺពួកគេមិនខ្ជះខ្ជាយ និងមិនចង្អៀតចង្អល់ឡើយ ។ តែពួកគេចំណាយធុនកណ្ដាលរវាងទាំងពីរនោះ ។

៦៨-ហើយនិងបណ្ដាអ្នកដែលមិនបួងសួងសុំម្ចាស់ផ្សេងរួមជាមួយនឹងអល់ឡោះ ហើយពួកគេមិនសម្លាប់ជីវិតដែលអល់ឡោះបានហាមឃាត់ឡើយ លើកលែងតែមានមូលហេតុត្រឹមត្រូវ( តាមច្បាប់សាសនាអ៊ីស្លាម) ប៉ុណ្ណោះ ។ ហើយពួកគេក៏មិនធ្វើហ្ស៊ីណាដែរ ។ តែបើអ្នកណាប្រព្រឹត្តដូច្នោះវិញ គេពិតជានឹងទទួលទារុណកម្ម ។

وَٱلَّذِينَ لَا يَدۡعُونَ مَعَ ٱللَّهِ إِلَٰهًا ءَاخَرَ وَلَا يَقۡتُلُونَ ٱلنَّفۡسَ ٱلَّتِي حَرَّمَ ٱللَّهُ إِلَّا بِٱلۡحَقِّ وَلَا يَزۡنُونَۚ وَمَن يَفۡعَلۡ ذَٰلِكَ يَلۡقَ أَثَامٗا ٦٨

៦៩-ទារុណកម្មនឹងត្រូវបន្ថែមទៅលើគេទ្វេដងនៅថ្ងៃបរលោក ។ ហើយគេនឹងស្ថិតក្នុងវាយ៉ាងអាម៉ាស់ជារៀងរហូត ។

يُضَٰعَفۡ لَهُ ٱلۡعَذَابُ يَوۡمَ ٱلۡقِيَٰمَةِ وَيَخۡلُدۡ فِيهِۦ مُهَانًا ٦٩

៧០-លើកលែងតែអ្នកណាដែលបានសារភាពកំហុស និងមានជំនឿ ព្រមទាំងបានសាងនូវអំពើល្អត្រឹមត្រូវ គឺអ្នកទាំងនោះហើយដែលអល់ឡោះនឹងប្តូរអំពើអាក្រក់របស់ពួកគេទៅជាអំពើល្អវិញ ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

إِلَّا مَن تَابَ وَءَامَنَ وَعَمِلَ عَمَلٗا صَٰلِحٗا فَأُوْلَٰٓئِكَ يُبَدِّلُ ٱللَّهُ سَيِّـَٔاتِهِمۡ حَسَنَٰتٖۗ وَكَانَ ٱللَّهُ غَفُورٗا رَّحِيمٗا ٧٠

៧១-ហើយអ្នកណាដែលបានសារភាពកំហុស និងបានសាងអំពើល្អត្រឹមត្រូវ ពិតប្រាកដណាស់ គេជាអ្នកដែលសារភាពកំហុសចំពោះអល់ឡោះពិតប្រាកដមែន ។

وَمَن تَابَ وَعَمِلَ صَٰلِحٗا فَإِنَّهُۥ يَتُوبُ إِلَى ٱللَّهِ مَتَابٗا ٧١

៧២-និងបណ្ដាអ្នកដែលមិនធ្វើសាក្សីភូតកុហក ។ ហើយនៅពេលដែលពួកគេបានដើរឆ្លងកាត់ហ្វូងមនុស្សដែលនិយាយឥតប្រយោជន៍ ពួកគេដើរឆ្លងកាត់ដោយសេចក្ដីថ្លៃថ្នូរ ។

وَٱلَّذِينَ لَا يَشۡهَدُونَ ٱلزُّورَ وَإِذَا مَرُّواْ بِٱللَّغۡوِ مَرُّواْ كِرَامٗا ٧٢

៧៣-និងបណ្ដាអ្នកដែលនៅពេលពួកគេត្រូវបានគេរំលឹកនូវអាយ៉ាត់ៗនៃម្ចាស់របស់ពួកគេ ពួកគេមិនបានធ្វើត និងធ្វើថ្លង់ចំពោះវាឡើយ ។

وَٱلَّذِينَ إِذَا ذُكِّرُواْ بِـَٔايَٰتِ رَبِّهِمۡ لَمۡ يَخِرُّواْ عَلَيۡهَا صُمّٗا وَعُمۡيَانٗا ٧٣

៧៤-ហើយនិងបណ្ដាអ្នកដែលបួងសួងសុំថា: ឱម្ចាស់របស់ពួកយើងខ្ញុំ! សូមទ្រង់មេត្តាប្រទានឱ្យពួកយើងខ្ញុំអំពីប្រពន្ធរបស់ពួកយើងខ្ញុំ និងកូនចៅរបស់ពួកយើងខ្ញុំជាទីគាប់ចិត្តផង! ហើយសូមទ្រង់មេត្តាធ្វើឱ្យពួកយើងខ្ញុំក្លាយជាអ្នកដឹកនាំសម្រាប់បណ្ដាអ្នកដែលកោតខ្លាចទ្រង់ផង ។

وَٱلَّذِينَ يَقُولُونَ رَبَّنَا هَبۡ لَنَا مِنۡ أَزۡوَٰجِنَا وَذُرِّيَّٰتِنَا قُرَّةَ أَعۡيُنٖ وَٱجۡعَلۡنَا لِلۡمُتَّقِينَ إِمَامًا ٧٤

៧៥-អ្នកទាំងនោះហើយដែលនឹងត្រូវគេតបស្នងនូវកន្លែងមួយដ៏ប្រសើរបំផុត( ឋានសួគ៌) ដោយសារតែអ្វីដែលពួកគេបានអត់ធ្មត់ ។

أُوْلَٰٓئِكَ يُجۡزَوۡنَ ٱلۡغُرۡفَةَ بِمَا صَبَرُواْ

وَيُلَقَّوْنَ فِيهَا تَحِيَّةً وَسَلَٰمًا ٧٥

ហើយពួកគេនឹងត្រូវគេទទួលស្វាគមន៍និងជូនពរឱ្យមានសេចក្ដីសុខ។

خَٰلِدِينَ فِيهَا ۚ حَسُنَتْ مُسْتَقَرًّا وَمُقَامًا ٧٦

៧៦-ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ដែលជាទីលំនៅ និងជាកន្លែងស្នាក់អាស្រ័យមួយដ៏ប្រសើរបំផុត។

قُلْ مَا يَعْبَؤُا۟ بِكُمْ رَبِّى لَوْلَا دُعَآؤُكُمْ ۖ فَقَدْ كَذَّبْتُمْ فَسَوْفَ يَكُونُ لِزَامًۢا ٧٧

៧៧-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ម្ចាស់របស់ខ្ញុំនឹងមិនអើពើចំពោះពួកអ្នកឡើយ ប្រសិនបើគ្មានការបួងសួងសុំរបស់ពួកអ្នក(ចំពោះទ្រង់)ទេនោះ។ តែជាការពិតណាស់ ពួកអ្នកបានបដិសេធនឹងទ្រង់។ ដូច្នេះទារុណកម្មនឹងធ្លាក់ទៅលើពួកអ្នកជាមិនខាន។

## ជំពូកអាស្ហ្ស៊ូអារ៉ក

## سورة الشعراء

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

طسٓمٓ ١

១-ត ស៊ីន មីម ។

تِلْكَ ءَايَٰتُ ٱلْكِتَٰبِ ٱلْمُبِينِ ٢

២-ទាំងនេះគឺជាអាយ៉ាត់ៗរបស់គម្ពីរ(គួរអាន)ដ៏ច្បាស់លាស់។

لَعَلَّكَ بَٰخِعٌ نَّفْسَكَ أَلَّا يَكُونُوا۟ مُؤْمِنِينَ ٣

៣-ប្រហែលជាអ្នក(មូហាំម៉ាត់)នឹងសម្លាប់ខ្លួនឯង(ដោយសារទុក្ខព្រួយ) ព្រោះតែពួកគេមិនក្លាយជាអ្នកមានជំនឿ។

إِن نَّشَأْ نُنَزِّلْ عَلَيْهِم مِّنَ ٱلسَّمَآءِ ءَايَةً فَظَلَّتْ أَعْنَٰقُهُمْ لَهَا خَٰضِعِينَ ٤

៤-ប្រសិនបើយើងមានចេតនា យើងនឹងបញ្ចុះមុជីហ្សាត់ពីលើមេឃទៅលើពួកគេ(ពួកគ្មានជំនឿ)។ ហើយក្បាលរបស់ពួកគេនឹងឱនលំទោនមករកវាជារៀងរហូត។

وَمَا يَأْتِيهِم مِّن ذِكْرٍ مِّنَ ٱلرَّحْمَٰنِ مُحْدَثٍ إِلَّا كَانُوا۟ عَنْهُ مُعْرِضِينَ ٥

៥-ហើយគ្មានការរំលឹកណាមួយដែលថ្មីពីម្ចាស់មហាសប្បុរសមកដល់ពួកគេ ក្រៅពីពួកគេជាអ្នកដែលបានបែរចេញពីវាឡើយ។

فَقَدْ كَذَّبُوا۟ فَسَيَأْتِيهِمْ أَنۢبَٰٓؤُا۟ مَا كَانُوا۟ بِهِۦ يَسْتَهْزِءُونَ ٦

៦- ដូច្នេះ ជាការពិតណាស់ពួកគេបានបដិសេធ(នឹងគម្ពីរគួរអាន) ហើយដំណឹង(អាក្រក់)នៃអ្វីដែលពួកគេធ្លាប់បានសើចចំអកចំពោះវា នឹងមកដល់ពួកគេ។

أَوَلَمْ يَرَوْا۟ إِلَى ٱلْأَرْضِ كَمْ أَنۢبَتْنَا فِيهَا مِن كُلِّ زَوْجٍ كَرِيمٍ ٧

៧-តើពួកគេមិនបានមើលទៅលើផែនដីដែលយើងបានបណ្ដុះនូវរាល់រុក្ខជាតិហូបផ្លែល្អៗជាច្រើនចេញពីវាទេឬ?

إِنَّ فِى ذَٰلِكَ لَءَايَةً ۖ وَمَا كَانَ أَكْثَرُهُم

៨-ពិតប្រាកដណាស់ នៅក្នុងរឿងនោះ គឺជាភស្តុតាងមួយយ៉ាង

مُّؤْمِنِينَ ﴿٨﴾

ច្បាស់។ ប៉ុន្តែពួកគេភាគច្រើនគ្មានជំនឿឡើយ។

وَإِنَّ رَبَّكَ لَهُوَ ٱلْعَزِيزُ ٱلرَّحِيمُ ﴿٩﴾

៩-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាម្ចាស់ មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់។

وَإِذْ نَادَىٰ رَبُّكَ مُوسَىٰٓ أَنِ ٱئْتِ ٱلْقَوْمَ ٱلظَّٰلِمِينَ ﴿١٠﴾

១០-ហើយ(ចូរចងចាំ)នៅពេលដែលម្ចាស់របស់អ្នក(មូហាំម៉ាត់)បានហៅមូសាថាៈ ចូរអ្នកធ្វើដំណើរទៅកាន់ក្រុមដែលបំពានចុះ។

قَوْمَ فِرْعَوْنَ ۚ أَلَا يَتَّقُونَ ﴿١١﴾

១១-គឺជាក្រុមរបស់ហ្វៀរអោន។ តើពួកគេមិនកោតខ្លាច(ទណ្ឌកម្ម)អល់ឡោះទេឬ?

قَالَ رَبِّ إِنِّىٓ أَخَافُ أَن يُكَذِّبُونِ ﴿١٢﴾

១២-គេ(មូសា)បានតបវិញថាៈ ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំខ្លាចពួកគេបដិសេធនឹងខ្ញុំ។

وَيَضِيقُ صَدْرِى وَلَا يَنطَلِقُ لِسَانِى فَأَرْسِلْ إِلَىٰ هَٰرُونَ ﴿١٣﴾

១៣-ហើយទ្រូងរបស់ខ្ញុំតឹងណែន ហើយអណ្តាតរបស់ខ្ញុំ ក៏និយាយមិនច្បាស់។ ដូច្នេះសូមទ្រង់មេត្តាបញ្ជូន(ជីព្រីលឱ្យនាំសារ)ទៅកាន់ហារូន(ដើម្បីជួយខ្ញុំ)ផង។

وَلَهُمْ عَلَىَّ ذَنۢبٌ فَأَخَافُ أَن يَقْتُلُونِ ﴿١٤﴾

១៤-ហើយខ្ញុំធ្លាប់មានទោសឧក្រិដ្ឋចំពោះពួកគេ។ ដូច្នេះខ្ញុំខ្លាចពួកគេនឹងសម្លាប់ខ្ញុំវិញ។

قَالَ كَلَّا ۖ فَٱذْهَبَا بِـَٔايَٰتِنَآ ۖ إِنَّا مَعَكُم مُّسْتَمِعُونَ ﴿١٥﴾

១៥-ទ្រង់បានមានបន្ទូលថាៈ ទេ! (ពួកគេមិនអាចសម្លាប់អ្នកបានឡើយ) ដូច្នេះចូរអ្នកទាំងពីរនាំមុជីហ្សាត់របស់យើងទៅចុះ។ ពិតប្រាកដណាស់ យើងនៅជាមួយពួកអ្នកជាអ្នកដឹងឮ។

فَأْتِيَا فِرْعَوْنَ فَقُولَآ إِنَّا رَسُولُ رَبِّ ٱلْعَٰلَمِينَ ﴿١٦﴾

១៦-ហើយចូរអ្នកទាំងពីរទៅជួបហ្វៀរអោន ហើយប្រាប់គេថាៈ ពិតប្រាកដណាស់ យើងទាំងពីរនាក់គឺជាអ្នកនាំសារនៃម្ចាស់គ្រប់គ្រងពិភពទាំងអស់។

أَنْ أَرْسِلْ مَعَنَا بَنِىٓ إِسْرَٰٓءِيلَ ﴿١٧﴾

១៧-(មូសាបានពោលថា) សូមអ្នកដោះលែងអំបូរអ៊ីស្រាអែលឱ្យទៅជាមួយពួកយើងផង។

قَالَ أَلَمْ نُرَبِّكَ فِينَا وَلِيدًا وَلَبِثْتَ فِينَا مِنْ عُمُرِكَ سِنِينَ ﴿١٨﴾

១៨-ហ្វៀរអោនបានតបវិញថាៈ តើយើងមិនបានចិញ្ចឹមបីបាច់ថែរក្សាអ្នកក្នុងក្រុមគ្រួសាររបស់យើងតាំងពីតូច និងមិនបានរស់នៅជាមួយក្រុមគ្រួសាររបស់យើងជាច្រើនឆ្នាំក្នុងជីវិតរបស់អ្នកទេឬ?

١٩-ហើយអ្នកបានប្រព្រឹត្តអំពើ(ឧក្រិដ្ឋ)មួយដែលអ្នកបានប្រព្រឹត្តកន្លងមក។ ហើយអ្នកគឺជាអ្នកដែលស្ថិតក្នុងចំណោមពួកដែលរមិលគុណ។

وَفَعَلْتَ فَعْلَتَكَ ٱلَّتِى فَعَلْتَ وَأَنتَ مِنَ ٱلْكَـٰفِرِينَ ﴿١٩﴾

២០-គាត់(មូសា)បានឆ្លើយវិញថា: ខ្ញុំបានប្រព្រឹត្តវាដូច្នោះមែនតែ(ពេលនោះ)ខ្ញុំស្ថិតក្នុងចំណោមអ្នកដែលល្ងង់ខ្លៅ។

قَالَ فَعَلْتُهَآ إِذًا وَأَنَا۠ مِنَ ٱلضَّآلِّينَ ﴿٢٠﴾

២១-ដូច្នេះហើយបានជាខ្ញុំរត់គេចពីពួកអ្នក នៅពេលនោះខ្ញុំមានការភ័យខ្លាចចំពោះពួកអ្នក។ ក្រោយមកម្ចាស់របស់ខ្ញុំបានប្រទាននូវគតិបណ្ឌិតដល់ខ្ញុំ ហើយទ្រង់បានតែងតាំងខ្ញុំជាអ្នកនាំសារម្នាក់ក្នុងចំណោមអ្នកនាំសារទាំងឡាយ។

فَفَرَرْتُ مِنكُمْ لَمَّا خِفْتُكُمْ فَوَهَبَ لِى رَبِّى حُكْمًا وَجَعَلَنِى مِنَ ٱلْمُرْسَلِينَ ﴿٢١﴾

២២-ហើយនោះ(ការចិញ្ចឹមបីបាច់ថែរក្សាខ្ញុំ)គឺជានៀកម៉ាត់មួយដែលអ្នកបានផ្តល់វាឱ្យខ្ញុំឬ កាលដែលអ្នកបានយកអំបូរអ៊ីស្រាអែលធ្វើជាទាសករនោះ?

وَتِلْكَ نِعْمَةٌ تَمُنُّهَا عَلَىَّ أَنْ عَبَّدتَّ بَنِىٓ إِسْرَٰٓءِيلَ ﴿٢٢﴾

២៣-ហ្វៀរអោនបានសួរថា: ហើយអ្វីទៅដែលជាម្ចាស់គ្រប់គ្រងពិភពទាំងអស់នោះ?

قَالَ فِرْعَوْنُ وَمَا رَبُّ ٱلْعَـٰلَمِينَ ﴿٢٣﴾

២៤-គាត់(មូសា)បានឆ្លើយថា: គឺម្ចាស់ដែលគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី និងអ្វីៗដែលមាននៅចន្លោះវាទាំងពីរ ប្រសិនបើពួកអ្នកជាអ្នកមានជំនឿច្បាស់មែននោះ។

قَالَ رَبُّ ٱلسَّمَـٰوَٰتِ وَٱلْأَرْضِ وَمَا بَيْنَهُمَآ ۖ إِن كُنتُم مُّوقِنِينَ ﴿٢٤﴾

២៥-គេ(ហ្វៀរអោន)បាននិយាយទៅកាន់អ្នកនៅជុំវិញគេថា: តើពួកអ្នកមិនឮ(ពាក្យសំដីរបស់មូសាដែលនិយាយថា មានម្ចាស់ក្រៅពីយើង)ទេឬ?

قَالَ لِمَنْ حَوْلَهُۥٓ أَلَا تَسْتَمِعُونَ ﴿٢٥﴾

២៦-គាត់(មូសា)បានពោលថា: ទ្រង់គឺជាម្ចាស់របស់ពួកអ្នក និងជាម្ចាស់នៃជីដូនជីតារបស់ពួកអ្នកតាំងពីមុនមក។

قَالَ رَبُّكُمْ وَرَبُّ ءَابَآئِكُمُ ٱلْأَوَّلِينَ ﴿٢٦﴾

២៧-គេ(ហ្វៀរអោន)បាននិយាយថា: ពិតប្រាកដណាស់ អ្នកនាំសាររបស់ពួកអ្នកដែលគេបានបញ្ជូនមកកាន់ពួកអ្នកគឺពិតជាវិកលចរិត។

قَالَ إِنَّ رَسُولَكُمُ ٱلَّذِىٓ أُرْسِلَ إِلَيْكُمْ لَمَجْنُونٌ ﴿٢٧﴾

២៨-គាត់(មូសា)បានពោលថា: ទ្រង់គឺម្ចាស់គ្រប់គ្រងទិសខាងកើត និងទិសខាងលិច ហើយនិងអ្វីៗដែលនៅចន្លោះវាទាំងពីរ

قَالَ رَبُّ ٱلْمَشْرِقِ وَٱلْمَغْرِبِ وَمَا بَيْنَهُمَآ ۖ إِن كُنتُمْ تَعْقِلُونَ ﴿٢٨﴾

ប្រសិនបើពួកអ្នកបានគិតពិចារណា។

قَالَ لَئِنِ ٱتَّخَذۡتَ إِلَٰهًا غَيۡرِي لَأَجۡعَلَنَّكَ مِنَ ٱلۡمَسۡجُونِينَ ٢٩

២៩-គេ(ហ្វៀរអោន)បាននិយាយថា: ប្រសិនបើអ្នកយកម្ចាស់ណាមួយមកគោរពសក្ការៈក្រៅពីយើងនោះ យើងពិតជានឹងដាក់អ្នកទៅក្នុងចំណោមពួកដែលត្រូវឃុំឃាំងជាមិនខាន។

قَالَ أَوَلَوۡ جِئۡتُكَ بِشَيۡءٖ مُّبِينٖ ٣٠

៣០-គាត់(មូសា)បានតបវិញថា: ទោះបីជាខ្ញុំបាននាំមកឱ្យអ្នកនូវ(ភស្តុតាង)អ្វីមួយដ៏ច្បាស់លាស់ក៏ដោយឬ?

قَالَ فَأۡتِ بِهِۦٓ إِن كُنتَ مِنَ ٱلصَّٰدِقِينَ ٣١

៣១-គេ(ហ្វៀរអោន)បាននិយាយថា: ដូច្នេះ ចូរអ្នកនាំវាមក ប្រសិនបើអ្នកស្ថិតក្នុងចំណោមអ្នកដែលនិយាយពិតមែននោះ។

فَأَلۡقَىٰ عَصَاهُ فَإِذَا هِيَ ثُعۡبَانٞ مُّبِينٞ ٣٢

៣២-បន្ទាប់មកមូសាបានបោះដំបងរបស់គេ រំពេចនោះវាក៏ក្លាយជាពស់យ៉ាងពិតប្រាកដ។

وَنَزَعَ يَدَهُۥ فَإِذَا هِيَ بَيۡضَآءُ لِلنَّٰظِرِينَ ٣٣

៣៣-ហើយមូសាក៏បានដកដៃរបស់គេ(ចេញពីហោប៉ៅ) រំពេចនោះវាក្លាយជាពន្លឺពណ៌សចែងចាំងសម្រាប់អ្នកទស្សនាទាំងអស់។

قَالَ لِلۡمَلَإِ حَوۡلَهُۥٓ إِنَّ هَٰذَا لَسَٰحِرٌ عَلِيمٞ ٣٤

៣៤-គេ(ហ្វៀរអោន)បាននិយាយទៅកាន់មន្ត្រីដែលនៅជុំវិញគេថា: ពិតប្រាកដណាស់ នេះគឺជាគ្រូមន្តអាគមដ៏ប៉ិនប្រសប់។

يُرِيدُ أَن يُخۡرِجَكُم مِّنۡ أَرۡضِكُم بِسِحۡرِهِۦ فَمَاذَا تَأۡمُرُونَ ٣٥

៣៥-គេ(មូសា)ចង់បណ្តេញពួកអ្នកចេញពីទឹកដីរបស់ពួកអ្នកដោយមន្តអាគមរបស់គេ។ ដូច្នេះ តើពួកអ្នកត្រូវឱ្យខ្ញុំធ្វើដូចម្តេច?

قَالُوٓاْ أَرۡجِهۡ وَأَخَاهُ وَٱبۡعَثۡ فِي ٱلۡمَدَآئِنِ حَٰشِرِينَ ٣٦

៣៦-ពួកគេបានឆ្លើយថា: សូមអ្នកពន្យារពេលឱ្យគេនិងបងប្អូនរបស់គេសិនចុះ ហើយសូមអ្នកបញ្ជូនមនុស្សទៅគ្រប់ទីក្រុងដើម្បីប្រមូល(អ្នកចេះប្រើមន្តអាគមទាំងអស់)។

يَأۡتُوكَ بِكُلِّ سَحَّارٍ عَلِيمٖ ٣٧

៣៧-ពួកគេនឹងនាំមកឱ្យអ្នកនូវរាល់អ្នកចេះមន្តអាគមដែលស្ទាត់ជំនាញបំផុត។

فَجُمِعَ ٱلسَّحَرَةُ لِمِيقَٰتِ يَوۡمٖ مَّعۡلُومٖ ٣٨

៣៨-ក្រោយមកគេក៏បានប្រមូលផ្តុំពួកចេះមន្តអាគមនៅពេលកំណត់ជួបគ្នានៃថ្ងៃមួយដែលជាក់លាក់។

وَقِيلَ لِلنَّاسِ هَلۡ أَنتُم مُّجۡتَمِعُونَ ٣٩

៣៩-ហើយគេ(ហ្វៀរអោន)បាននិយាយទៅកាន់មនុស្សទូទៅ

ថា: តើពួកអ្នកមកជួបជុំគ្នាអស់ហើយឬនៅ?

៤០-សង្ឃឹមថាពួកយើងនឹងតាមគ្រូមន្តអាគមទាំងនោះ ប្រសិនបើពួកគេគឺជាពួកដែលទទួលបានជ័យជំនះ ។

៤១-ហើយនៅពេលដែលពួកគ្រូមន្តអាគមបានមកដល់ ពួកគេបាននិយាយទៅកាន់ហ្វៀរអោនថា: តើពួកយើងនឹងទទួលបានរង្វាន់មែនឬ ប្រសិនបើពួកយើងជាអ្នកមានជ័យជំនះនោះ?

៤២-គេបានឆ្លើយថា: ប្រាកដជាមាន! ហើយពិតប្រាកដណាស់ ពេលនោះពួកអ្នកនឹងស្ថិតក្នុងចំណោមអ្នកជំនិត(របស់យើង) ។

៤៣-មូសាបានពោលទៅកាន់ពួកគេថា: ចូរពួកអ្នកបោះចុះនូវអ្វីដែលពួកអ្នកចង់បោះនោះ ។

៤៤-ពេលនោះពួកគេក៏បានបោះខ្សែ និងដំបងរបស់ពួកគេ ហើយពួកគេស្បថនឹងអំណាចរបស់ហ្វៀរអោនថា: ប្រាកដណាស់ ពួកយើងពិតជាអ្នកឈ្នះ ។

៤៥-ហើយមូសាក៏បានបោះដំបងរបស់គេ រំពេចនោះវាក៏ទៅលេបអ្វីៗដែលពួកគេកំពុងបំភាន់នោះ ។

៤៦-ហើយពួកគ្រូមន្តអាគមទាំងអស់នោះក៏លំឱនកាយស៊ូជូត ។

៤៧-ដោយពួកគេ(ពួកមន្តអាគម) បាននិយាយថា: ពួកយើងជឿលើម្ចាស់ពិភពទាំងអស់

៤៨-ដែលជាម្ចាស់របស់មូសា និងហារូនហើយ ។

៤៩-គេ(ហ្វៀរអោន) បានស្រែកថា: តើពួកអ្នកជឿនឹងគេ(មូសា) មុននឹងយើងអនុញ្ញាតឱ្យពួកអ្នកឬ? ពិតប្រាកដណាស់ គេគឺជាគ្រូរបស់ពួកអ្នក ដែលបានបង្រៀនមន្តអាគមដល់ពួកអ្នក ។ ដូច្នេះ ពួកអ្នកគង់តែនឹងដឹង ។ យើងពិតជានឹងកាត់ដៃជើងរបស់ពួកអ្នកឆ្លាស់គ្នា(កាត់ដៃស្តាំ និងជើងឆ្វេង ឬដៃឆ្វេង និងជើងស្តាំ)

لَعَلَّنَا نَتَّبِعُ ٱلسَّحَرَةَ إِن كَانُواْ هُمُ
ٱلْغَٰلِبِينَ ﴿٤٠﴾

فَلَمَّا جَآءَ ٱلسَّحَرَةُ قَالُواْ لِفِرْعَوْنَ أَئِنَّ لَنَا
لَأَجْرًا إِن كُنَّا نَحْنُ ٱلْغَٰلِبِينَ ﴿٤١﴾

قَالَ نَعَمْ وَإِنَّكُمْ إِذًا لَّمِنَ ٱلْمُقَرَّبِينَ ﴿٤٢﴾

قَالَ لَهُم مُّوسَىٰٓ أَلْقُواْ مَآ أَنتُم مُّلْقُونَ ﴿٤٣﴾

فَأَلْقَوْاْ حِبَالَهُمْ وَعِصِيَّهُمْ وَقَالُواْ بِعِزَّةِ
فِرْعَوْنَ إِنَّا لَنَحْنُ ٱلْغَٰلِبُونَ ﴿٤٤﴾

فَأَلْقَىٰ مُوسَىٰ عَصَاهُ فَإِذَا هِىَ تَلْقَفُ مَا
يَأْفِكُونَ ﴿٤٥﴾

فَأُلْقِىَ ٱلسَّحَرَةُ سَٰجِدِينَ ﴿٤٦﴾

قَالُوٓاْ ءَامَنَّا بِرَبِّ ٱلْعَٰلَمِينَ ﴿٤٧﴾

رَبِّ مُوسَىٰ وَهَٰرُونَ ﴿٤٨﴾

قَالَ ءَامَنتُمْ لَهُۥ قَبْلَ أَنْ ءَاذَنَ لَكُمْ ۖ إِنَّهُۥ
لَكَبِيرُكُمُ ٱلَّذِى عَلَّمَكُمُ ٱلسِّحْرَ فَلَسَوْفَ
تَعْلَمُونَ ۚ لَأُقَطِّعَنَّ أَيْدِيَكُمْ وَأَرْجُلَكُم مِّنْ
خِلَٰفٍ وَلَأُصَلِّبَنَّكُمْ أَجْمَعِينَ ﴿٤٩﴾

ក្រោយមកយើងពិតជានឹងចងឆ្កាងពួកអ្នកទាំងអស់គ្នា។

٥٠ قَالُواْ لَا ضَيْرَ إِنَّآ إِلَىٰ رَبِّنَا مُنقَلِبُونَ

៥០-ពួកគេបានតបវិញថា: គ្មានគ្រោះថ្នាក់(ចំពោះពួកយើង)ឡើយ។ ពិតប្រាកដណាស់ពួកយើងនឹងវិលទៅរកម្ចាស់(អល់ឡោះ)របស់ពួកយើងវិញជាមិនខាន។

٥١ إِنَّا نَطۡمَعُ أَن يَغۡفِرَ لَنَا رَبُّنَا خَطَٰيَٰنَآ أَن كُنَّآ أَوَّلَ ٱلۡمُؤۡمِنِينَ

៥១-ពិតប្រាកដណាស់ ពួកយើងសង្ឃឹមថា: ម្ចាស់របស់ពួកយើងនឹងអភ័យទោសឱ្យពួកយើងនូវរាល់កំហុសឆ្គងរបស់យើងដោយសារពួកយើងជាអ្នកមានជំនឿមុនគេ។

٥٢ ۞ وَأَوۡحَيۡنَآ إِلَىٰ مُوسَىٰٓ أَنۡ أَسۡرِ بِعِبَادِيٓ إِنَّكُم مُّتَّبَعُونَ

៥២-ហើយយើងបានផ្តល់វ៉ាហ៊ីទៅកាន់មូសាឱ្យនាំខ្ញុំរបស់យើង(អំបូរអ៊ីស្រាអែល និងអ្នកដែលមានជំនឿនឹងមូសា)ភៀសខ្លួនចេញទាំងយប់ ពិតប្រាកដណាស់ ពួកអ្នកត្រូវគេតាមចាប់ខ្លួនហើយ។

٥٣ فَأَرۡسَلَ فِرۡعَوۡنُ فِي ٱلۡمَدَآئِنِ حَٰشِرِينَ

៥៣-ក្រោយមកហ្វៀរអោនបានបញ្ជូន(មេទាហាន) ប្រមូលកងទ័ពតាមបណ្តាក្រុងនានា។

٥٤ إِنَّ هَٰٓؤُلَآءِ لَشِرۡذِمَةٞ قَلِيلُونَ

៥៤-(ដោយហ្វៀរអោនបានប្រកាសប្រាប់ពលទាហានរបស់គេថា)ពិតប្រាកដណាស់ ពួកទាំងនេះគឺជាកុលសម្ព័ន្ធតូចមួយប៉ុណ្ណោះ។

٥٥ وَإِنَّهُمۡ لَنَا لَغَآئِظُونَ

៥៥-ហើយពិតប្រាកដណាស់ ពួកគេធ្វើឱ្យយើងក្តៅក្រហាយយ៉ាងខ្លាំង។

٥٦ وَإِنَّا لَجَمِيعٌ حَٰذِرُونَ

៥៦-ហើយពិតប្រាកដណាស់ ពួកយើងទាំងអស់គ្នាត្រៀមលក្ខណៈ(ដើម្បីតាមចាប់ពួកគេ)។

٥٧ فَأَخۡرَجۡنَٰهُم مِّن جَنَّٰتٖ وَعُيُونٖ

៥៧-ដូច្នេះ យើងបានបណ្តេញពួកគេ(ហ្វៀរអោន និងទាហានរបស់គេ)ចេញពី(ទឹកដីអេហ្ស៊ីប)ដែលមានសួនឧទ្យាន និងប្រភពទឹកជាច្រើន។

٥٨ وَكُنُوزٖ وَمَقَامٖ كَرِيمٖ

៥៨-និងកំណប់ទ្រព្យដ៏មានតម្លៃ និងឋានៈដ៏ខ្ពង់ខ្ពស់។

٥٩ كَذَٰلِكَ وَأَوۡرَثۡنَٰهَا بَنِيٓ إِسۡرَٰٓءِيلَ

៥៩-ដូច្នេះដែរ យើងបានប្រទានកេរមរតកទាំងនេះដល់អំបូរអ៊ីស្រាអែល។

٦٠ فَأَتۡبَعُوهُم مُّشۡرِقِينَ

៦០-ហើយហ្វៀរអោន និងពលទាហានរបស់គេបានតាមទាន់ក្រុមមូសានៅពេលថ្ងៃរះ។

فَلَمَّا تَرَٰٓءَا ٱلْجَمْعَانِ قَالَ أَصْحَٰبُ مُوسَىٰٓ إِنَّا لَمُدْرَكُونَ ﴿٦١﴾

៦១-ហើយនៅពេលដែលក្រុមទាំងពីរបានឃើញគ្នា ក្រុមមូសាបាននិយាយថា: ពួកយើងពិតជាត្រូវគេតាមទាន់ហើយ ។

قَالَ كَلَّآ ۖ إِنَّ مَعِىَ رَبِّى سَيَهْدِينِ ﴿٦٢﴾

៦២-គេ(មូសា)បានពោលថា: ទេ! ពួកគេពុំអាចតាមទាន់ទេ។ ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំស្ថិតនៅជាមួយខ្ញុំ ទ្រង់នឹងបង្ហាញផ្លូវដល់ខ្ញុំ។

فَأَوْحَيْنَآ إِلَىٰ مُوسَىٰٓ أَنِ ٱضْرِب بِّعَصَاكَ ٱلْبَحْرَ ۖ فَٱنفَلَقَ فَكَانَ كُلُّ فِرْقٍ كَٱلطَّوْدِ ٱلْعَظِيمِ ﴿٦٣﴾

៦៣-ពេលនោះយើងបានផ្ដល់វ៉ាហ៊ីទៅកាន់មូសាថា: ចូរអ្នកវាយទឹកសមុទ្រនឹងដំបងរបស់អ្នកចុះ! រំពេចនោះទឹកសមុទ្រក៏បានញែកចេញពីគ្នា(ជាដប់ពីរផ្លូវ) ហើយរាល់ៗបំណែកទឹក(ដែលញែកចេញពីគ្នា)នោះប្រៀបដូចជាភ្នំដ៏ធំ ។

وَأَزْلَفْنَا ثَمَّ ٱلْءَاخَرِينَ ﴿٦٤﴾

៦៤-ហើយយើងបានធ្វើឱ្យក្រុមដទៃ(ហ្វៀរអោន និងក្រុមរបស់គេ)កាន់តែទៅជិតទីនោះ(រហូតទាល់តែពួកគេចូលទៅក្នុងទឹកសមុទ្រ) ។

وَأَنجَيْنَا مُوسَىٰ وَمَن مَّعَهُۥٓ أَجْمَعِينَ ﴿٦٥﴾

៦៥-ក្រោយមកយើងបានសង្គ្រោះមូសា និងអ្នកដែលនៅជាមួយគេទាំងអស់គ្នា ។

ثُمَّ أَغْرَقْنَا ٱلْءَاخَرِينَ ﴿٦٦﴾

៦៦-បន្ទាប់មកយើងបានពន្លិចក្រុមដទៃទៀត(ហ្វៀរអោន និងក្រុមរបស់គេ) ។

إِنَّ فِى ذَٰلِكَ لَءَايَةً ۖ وَمَا كَانَ أَكْثَرُهُم مُّؤْمِنِينَ ﴿٦٧﴾

៦៧-ពិតប្រាកដណាស់ នៅក្នុងព្រឹត្តិការណ៍នោះ គឺជាភស្តុតាងមួយដ៏ច្បាស់លាស់។ តែពួកគេភាគច្រើនគ្មានជំនឿឡើយ។

وَإِنَّ رَبَّكَ لَهُوَ ٱلْعَزِيزُ ٱلرَّحِيمُ ﴿٦٨﴾

៦៨-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាម្ចាស់មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់។

وَٱتْلُ عَلَيْهِمْ نَبَأَ إِبْرَٰهِيمَ ﴿٦٩﴾

៦៩-ហើយចូរអ្នក(មូហាំម៉ាត់)សូត្រពីដំណើររឿងរបស់អ៊ីព្រហ៊ីមឱ្យពួកគេ(ពួកគ្មានជំនឿ)ស្ដាប់ចុះ។

إِذْ قَالَ لِأَبِيهِ وَقَوْمِهِۦ مَا تَعْبُدُونَ ﴿٧٠﴾

៧០-ខណៈដែលគាត់(អ៊ីព្រហ៊ីម)បានសួរទៅកាន់ឪពុករបស់គាត់ និងក្រុមរបស់គាត់ថា: តើអ្វីទៅដែលពួកអ្នកកំពុងគោរពសក្ការៈនោះ?

قَالُواْ نَعۡبُدُ أَصۡنَامٗا فَنَظَلُّ لَهَا عَٰكِفِينَ ٧١

៧១-ពួកគេបានឆ្លើយថាៈ យើងកំពុងតែគោរពសក្ការៈចំពោះរូបសំណាកទាំងអស់នេះ ហើយយើងនឹងបន្តការគោរពទៅចំពោះពួកគេជារៀងរហូត។

قَالَ هَلۡ يَسۡمَعُونَكُمۡ إِذۡ تَدۡعُونَ ٧٢

៧២-គាត់(អ៊ីព្រហ៊ីម)បានសួរថាៈ តើពួកវា(រូបសំណាក)ឮពួកអ្នកនៅពេលដែលពួកអ្នកបួងសួងសុំដែរឬទេ?

أَوۡ يَنفَعُونَكُمۡ أَوۡ يَضُرُّونَ ٧٣

៧៣-ឬមួយពួកវាអាចផ្តល់ផលប្រយោជន៍ ឬផ្តល់គ្រោះថ្នាក់ដល់ពួកអ្នកដែរឬទេ?

قَالُواْ بَلۡ وَجَدۡنَآ ءَابَآءَنَا كَذَٰلِكَ يَفۡعَلُونَ ٧٤

៧៤-ពួកគេបានឆ្លើយថាៈ ផ្ទុយទៅវិញ ពួកយើងបានឃើញជីដូនជីតារបស់ពួកយើងធ្វើដូច្នេះ ។

قَالَ أَفَرَءَيۡتُم مَّا كُنتُمۡ تَعۡبُدُونَ ٧٥

៧៥-គាត់(អ៊ីព្រហ៊ីម)បានពោលថាៈ តើពួកអ្នកបានឃើញនូវអ្វីដែលពួកអ្នកកំពុងតែគោរពសក្ការៈឬទេ?

أَنتُمۡ وَءَابَآؤُكُمُ ٱلۡأَقۡدَمُونَ ٧٦

៧៦-ពួកអ្នក និងជីដូនជីតារបស់ពួកអ្នកតាំងពីបុរាណកាលមកនោះ?

فَإِنَّهُمۡ عَدُوّٞ لِّيٓ إِلَّا رَبَّ ٱلۡعَٰلَمِينَ ٧٧

៧៧-ហើយពិតប្រាកដណាស់ ពួកវា(រូបសំណាក)គឺជាសត្រូវរបស់ខ្ញុំ លើកលែងតែម្ចាស់គ្រប់គ្រងពិភពទាំងអស់ប៉ុណ្ណោះ។

ٱلَّذِي خَلَقَنِي فَهُوَ يَهۡدِينِ ٧٨

៧៨-ដែលទ្រង់ជាអ្នកបង្កើតខ្ញុំ និងជាអ្នកចង្អុលបង្ហាញដល់ខ្ញុំ(នូវមាគ៌ាដ៏ត្រឹមត្រូវ)។

وَٱلَّذِي هُوَ يُطۡعِمُنِي وَيَسۡقِينِ ٧٩

៧៩-ហើយទ្រង់គឺជាអ្នកដែលផ្តល់ចំណីអាហារដល់ខ្ញុំ និងផ្តល់ទឹកដល់ខ្ញុំ។

وَإِذَا مَرِضۡتُ فَهُوَ يَشۡفِينِ ٨٠

៨០-ហើយនៅពេលខ្ញុំមានជម្ងឺ គឺទ្រង់ជាអ្នកដែលធ្វើឱ្យខ្ញុំជាសះស្បើយ។

وَٱلَّذِي يُمِيتُنِي ثُمَّ يُحۡيِينِ ٨١

៨១-ហើយទ្រង់ជាអ្នកដែលធ្វើឱ្យខ្ញុំស្លាប់ បន្ទាប់មកទ្រង់ធ្វើឱ្យខ្ញុំរស់ឡើងវិញ។

وَٱلَّذِيٓ أَطۡمَعُ أَن يَغۡفِرَ لِي خَطِيٓـَٔتِي يَوۡمَ ٱلدِّينِ ٨٢

៨២-ហើយទ្រង់គឺជាអ្នកដែលខ្ញុំសង្ឃឹមយ៉ាងច្បាស់ថាៈ ទ្រង់នឹងអភ័យទោសឱ្យខ្ញុំនូវរាល់កំហុសឆ្គងរបស់ខ្ញុំនៅថ្ងៃជំនុំជំរះ(ថ្ងៃបរលោក)។

رَبِّ هَبۡ لِي حُكۡمٗا وَأَلۡحِقۡنِي بِٱلصَّٰلِحِينَ ﴿٨٣﴾

៨៣-ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាប្រទានដល់ខ្ញុំនូវភាពឈ្លាសវៃ និងបញ្ចូលខ្ញុំទៅក្នុងចំណោមអ្នកដែលសាងអំពើល្អត្រឹមត្រូវផងចុះ។

وَٱجۡعَل لِّي لِسَانَ صِدۡقٖ فِي ٱلۡأٓخِرِينَ ﴿٨٤﴾

៨៤-ហើយសូមទ្រង់មេត្តាផ្តល់ឱ្យខ្ញុំនូវការកោតសរសើរពីបណ្តាអ្នកជំនាន់ក្រោយផងចុះ។

وَٱجۡعَلۡنِي مِن وَرَثَةِ جَنَّةِ ٱلنَّعِيمِ ﴿٨٥﴾

៨៥-ហើយសូមទ្រង់មេត្តាធ្វើឱ្យខ្ញុំស្ថិតក្នុងចំណោមអ្នកដែលទទួលមរតកនៃឋានសួគ៌ណាអ៊ីមផងចុះ។

وَٱغۡفِرۡ لِأَبِيٓ إِنَّهُۥ كَانَ مِنَ ٱلضَّآلِّينَ ﴿٨٦﴾

៨៦-ហើយសូមទ្រង់មេត្តាអភ័យទោសដល់ឪពុករបស់ខ្ញុំផង។ ពិតប្រាកដណាស់ គាត់បានស្ថិតក្នុងចំណោមពួកដែលវង្វេង។

وَلَا تُخۡزِنِي يَوۡمَ يُبۡعَثُونَ ﴿٨٧﴾

៨៧-ហើយសូមទ្រង់មេត្តាកុំធ្វើឱ្យខ្ញុំអាម៉ាស់នៅថ្ងៃដែលមនុស្សលោកត្រូវគេធ្វើឱ្យរស់ឡើងវិញអ្វី។

يَوۡمَ لَا يَنفَعُ مَالٞ وَلَا بَنُونَ ﴿٨٨﴾

៨៨-គឺនៅថ្ងៃដែលទ្រព្យសម្បត្តិ និងកូនចៅគ្មានប្រយោជន៍ (ចំពោះអ្នកណាម្នាក់) ឡើយ។

إِلَّا مَنۡ أَتَى ٱللَّهَ بِقَلۡبٖ سَلِيمٖ ﴿٨٩﴾

៨៩-លើកលែងតែអ្នកណាដែលបានវិលទៅជួបអល់ឡោះដោយដួងចិត្តបរិសុទ្ធប៉ុណ្ណោះ។

وَأُزۡلِفَتِ ٱلۡجَنَّةُ لِلۡمُتَّقِينَ ﴿٩٠﴾

៩០-ហើយឋានសួគ៌ត្រូវបានគេធ្វើឱ្យជិតទៅចំពោះបណ្តាអ្នកដែលកោតខ្លាចអល់ឡោះ។

وَبُرِّزَتِ ٱلۡجَحِيمُ لِلۡغَاوِينَ ﴿٩١﴾

៩១-ហើយនរកជើហ៊ីមត្រូវបានគេបង្ហាញចំពោះពួកដែលវង្វេង។

وَقِيلَ لَهُمۡ أَيۡنَ مَا كُنتُمۡ تَعۡبُدُونَ ﴿٩٢﴾

៩២-ហើយមានគេសួរ (ដោយបញ្ឈឺ) ទៅកាន់ពួកនោះថា: ឯណាទៅអ្វី (ព្រះនានា) ដែលពួកអ្នកធ្លាប់បានគោរពសក្ការៈ

مِن دُونِ ٱللَّهِ هَلۡ يَنصُرُونَكُمۡ أَوۡ يَنتَصِرُونَ ﴿٩٣﴾

៩៣-ផ្សេងពីអល់ឡោះនោះ? តើពួកវា (ព្រះនានា) ជួយពួកអ្នក ឬមួយក៏ពួកវាជួយខ្លួនឯង?

فَكُبۡكِبُواْ فِيهَا هُمۡ وَٱلۡغَاوُۥنَ ﴿٩٤﴾

៩៤-ហើយពួកវា និងពួកដែលវង្វេងត្រូវបានគេបោះផ្កាប់មុខចូលទៅក្នុងវា (នរក)។

وَجُنُودُ إِبۡلِيسَ أَجۡمَعُونَ ﴿٩٥﴾

៩៥-ព្រមទាំងពលទាហានរបស់អ៊ីព្លីស( មនុស្សនិងជិន) ទាំងអស់។

قَالُواْ وَهُمۡ فِيهَا يَخۡتَصِمُونَ ﴿٩٦﴾

៩៦-ពួកគេ( ពួកគោរពព្រះនានា) បាននិយាយដោយពួកគេឈ្លោះប្រកែកគ្នានៅក្នុងនរកនោះថាៈ

تَٱللَّهِ إِن كُنَّا لَفِي ضَلَٰلٖ مُّبِينٍ ﴿٩٧﴾

៩៧-សូមស្បថនឹងអល់ឡោះថាៈ ប្រាកដណាស់ ពួកយើងពិតជាធ្លាប់បានស្ថិតក្នុងភាពវង្វេងយ៉ាងច្បាស់

إِذۡ نُسَوِّيكُم بِرَبِّ ٱلۡعَٰلَمِينَ ﴿٩٨﴾

៩៨-នៅពេលដែលពួកយើងបានឱ្យតម្លៃពួកអ្នកស្មើនឹងម្ចាស់គ្រប់គ្រងពិភពទាំងអស់។

وَمَآ أَضَلَّنَآ إِلَّا ٱلۡمُجۡرِمُونَ ﴿٩٩﴾

៩៩-ហើយគ្មានអ្នកណាម្នាក់បានធ្វើឱ្យពួកយើង( ពួកគោរពព្រះនានា) វង្វេងក្រៅពីពួកដែលប្រព្រឹត្តអំពើបាបនោះឡើយ។

فَمَا لَنَا مِن شَٰفِعِينَ ﴿١٠٠﴾

១០០-ដូច្នេះ គ្មានអ្នកណាអាចជួយអន្តរាគមន៍ដល់ពួកយើងឡើយ។

وَلَا صَدِيقٍ حَمِيمٖ ﴿١٠١﴾

១០១-ហើយក៏គ្មានមិត្តជិតស្និទ្ធណាម្នាក់( ជួយពួកយើង) ដែរ។

فَلَوۡ أَنَّ لَنَا كَرَّةٗ فَنَكُونَ مِنَ ٱلۡمُؤۡمِنِينَ ﴿١٠٢﴾

១០២-តែប្រសិនបើពួកយើងពិតជាមានឱកាសត្រឡប់ទៅរស់នៅក្នុងលោកិយម្ដងទៀត ពួកយើងនឹងក្លាយជាអ្នកមានជំនឿ( លើអល់ឡោះ) មិនខាន។

إِنَّ فِي ذَٰلِكَ لَأٓيَةٗۖ وَمَا كَانَ أَكۡثَرُهُم مُّؤۡمِنِينَ ﴿١٠٣﴾

១០៣-ពិតប្រាកដណាស់ នៅក្នុងព្រឹត្តិការណ៍នោះគឺជាភស្តុតាងមួយដ៏ច្បាស់លាស់។ តែពួកគេភាគច្រើនគ្មានជំនឿឡើយ។

وَإِنَّ رَبَّكَ لَهُوَ ٱلۡعَزِيزُ ٱلرَّحِيمُ ﴿١٠٤﴾

១០៤-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកទ្រង់គឺជាម្ចាស់មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់។

كَذَّبَتۡ قَوۡمُ نُوحٍ ٱلۡمُرۡسَلِينَ ﴿١٠٥﴾

១០៥-ក្រុមរបស់នូហបានបដិសេធនឹងបណ្ដាអ្នកនាំសារ។

إِذۡ قَالَ لَهُمۡ أَخُوهُمۡ نُوحٌ أَلَا تَتَّقُونَ ﴿١٠٦﴾

១០៦-នៅពេលនូហដែលជាបងប្អូនរបស់ពួកគេបានពោលទៅកាន់ពួកគេថាៈ តើពួកអ្នកមិនកោតខ្លាចអល់ឡោះទេឬ?

إِنِّي لَكُمۡ رَسُولٌ أَمِينٞ ﴿١٠٧﴾

១០៧-ពិតប្រាកដណាស់ ខ្ញុំគឺជាអ្នកនាំសារម្នាក់ដ៏ស្មោះត្រង់

សម្រាប់ពួកអ្នក។

១០៨-ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាមខ្ញុំចុះ។

فَٱتَّقُواْ ٱللَّهَ وَأَطِيعُونِ ﴿١٠٨﴾

១០៩-ខ្ញុំមិនស្នើសុំពីពួកអ្នកនូវកម្រៃណាមួយចំពោះការអំពាវនាវនោះឡើយ។ តែផលបុណ្យនៃការអំពាវនាវរបស់ខ្ញុំគឺនៅលើម្ចាស់ដែលគ្រប់គ្រងពិភពទាំងអស់។

وَمَآ أَسۡـَٔلُكُمۡ عَلَيۡهِ مِنۡ أَجۡرٍۖ إِنۡ أَجۡرِيَ إِلَّا عَلَىٰ رَبِّ ٱلۡعَٰلَمِينَ ﴿١٠٩﴾

១១០-ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាមខ្ញុំចុះ។

فَٱتَّقُواْ ٱللَّهَ وَأَطِيعُونِ ﴿١١٠﴾

១១១-ពួកគេបានឆ្លើយថា: តើឱ្យពួកយើងជឿចំពោះអ្នកយ៉ាងដូចម្ដេច ខណៈដែលមានតែពួកក្រីក្រទន់ខ្សោយបានតាមអ្នកនោះ?

۞ قَالُوٓاْ أَنُؤۡمِنُ لَكَ وَٱتَّبَعَكَ ٱلۡأَرۡذَلُونَ ﴿١١١﴾

១១២-គេ(នួហ)បានតបថា: តើវាជាការងាររបស់ខ្ញុំដែលខ្ញុំត្រូវដឹងចំពោះអ្វីដែលពួកគេបានប្រព្រឹត្តនោះឬ?

قَالَ وَمَا عِلۡمِي بِمَا كَانُواْ يَعۡمَلُونَ ﴿١١٢﴾

១១៣-ការជំនុំជំរះ(អំពើ)របស់ពួកគេគឺស្ថិតលើម្ចាស់របស់ខ្ញុំតែមួយគត់ ប្រសិនបើពួកអ្នកដឹង។

إِنۡ حِسَابُهُمۡ إِلَّا عَلَىٰ رَبِّيۖ لَوۡ تَشۡعُرُونَ ﴿١١٣﴾

១១៤-ហើយខ្ញុំមិនមែនជាអ្នកដែលបណ្ដេញបណ្ដាអ្នកមានជំនឿចោលឡើយ។

وَمَآ أَنَا۠ بِطَارِدِ ٱلۡمُؤۡمِنِينَ ﴿١١٤﴾

១១៥-ខ្ញុំមិនមែនជាអ្វី ក្រៅពីជាអ្នកដែលដាស់តឿនព្រមាននោះឡើយ។

إِنۡ أَنَا۠ إِلَّا نَذِيرٞ مُّبِينٞ ﴿١١٥﴾

១១៦-ពួកគេបាននិយាយថា: ប្រសិនបើអ្នកមិនព្រមបញ្ឈប់(ការអំពាវនាវ)ទេ ឱនួហ! អ្នកពិតជានឹងក្លាយទៅជាអ្នកដែលត្រូវសម្លាប់ដោយគប់នឹងដុំថ្មជាមិនខាន។

قَالُواْ لَئِن لَّمۡ تَنتَهِ يَٰنُوحُ لَتَكُونَنَّ مِنَ ٱلۡمَرۡجُومِينَ ﴿١١٦﴾

១១៧-គេ(នួហ)បានបួងសួងសុំថា: ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ក្រុមរបស់ខ្ញុំបានបដិសេធនឹងខ្ញុំ។

قَالَ رَبِّ إِنَّ قَوۡمِي كَذَّبُونِ ﴿١١٧﴾

១១៨-ដូច្នេះសូមទ្រង់មេត្តាវិនិច្ឆ័យរវាងខ្ញុំ និងពួកគេនូវការវិនិច្ឆ័យមួយយ៉ាងយុត្តិធម៌ផង ហើយសូមទ្រង់មេត្តាសង្គ្រោះខ្ញុំ និងអ្នកដែលនៅជាមួយខ្ញុំនៃបណ្ដាអ្នកដែលមានជំនឿផងចុះ។

فَٱفۡتَحۡ بَيۡنِي وَبَيۡنَهُمۡ فَتۡحٗا وَنَجِّنِي وَمَن مَّعِيَ مِنَ ٱلۡمُؤۡمِنِينَ ﴿١١٨﴾

فَأَنجَيْنَـٰهُ وَمَن مَّعَهُۥ فِى ٱلْفُلْكِ ٱلْمَشْحُونِ ﴿١١٩﴾

១១៩-ហើយយើងបានសង្គ្រោះគេ និងអ្នកដែលនៅជាមួយគេ (បណ្ដាអ្នកមានជំនឿ) ទៅក្នុងសំពៅមួយដែលពេញដោយបន្ទុក។

ثُمَّ أَغْرَقْنَا بَعْدُ ٱلْبَاقِينَ ﴿١٢٠﴾

១២០-បន្ទាប់មកយើងក៏បានពន្លិចពួកដែលសេសសល់ (ពួកគ្មានជំនឿ) ក្រោយពីនោះ។

إِنَّ فِى ذَٰلِكَ لَـَٔايَةً ۖ وَمَا كَانَ أَكْثَرُهُم مُّؤْمِنِينَ ﴿١٢١﴾

១២១-ពិតប្រាកដណាស់ នៅក្នុងព្រឹត្តិការណ៍នោះគឺជាភស្តុតាងមួយដ៏ច្បាស់លាស់។ តែពួកគេភាគច្រើនគឺគ្មានជំនឿឡើយ។

وَإِنَّ رَبَّكَ لَهُوَ ٱلْعَزِيزُ ٱلرَّحِيمُ ﴿١٢٢﴾

១២២-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាម្ចាស់មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់។

كَذَّبَتْ عَادٌ ٱلْمُرْسَلِينَ ﴿١٢٣﴾

១២៣-ក្រុមរបស់អាដបានបដិសេធនឹងបណ្ដាអ្នកនាំសារ។

إِذْ قَالَ لَهُمْ أَخُوهُمْ هُودٌ أَلَا تَتَّقُونَ ﴿١٢٤﴾

១២៤-នៅពេលហ៊ូទដែលជាបងប្អូនរបស់ពួកគេបានពោលទៅកាន់ពួកគេថាៈ តើពួកអ្នកមិនកោតខ្លាចអល់ឡោះទេឬ?

إِنِّى لَكُمْ رَسُولٌ أَمِينٌ ﴿١٢٥﴾

១២៥-ពិតប្រាកដណាស់ ខ្ញុំគឺជាអ្នកនាំសារម្នាក់ដ៏ស្មោះត្រង់សម្រាប់ពួកអ្នក។

فَٱتَّقُوا۟ ٱللَّهَ وَأَطِيعُونِ ﴿١٢٦﴾

១២៦-ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាមខ្ញុំចុះ។

وَمَآ أَسْـَٔلُكُمْ عَلَيْهِ مِنْ أَجْرٍ ۖ إِنْ أَجْرِىَ إِلَّا عَلَىٰ رَبِّ ٱلْعَـٰلَمِينَ ﴿١٢٧﴾

១២៧-ខ្ញុំមិនស្នើរសុំពីពួកអ្នកនូវកម្រៃណាមួយចំពោះការអំពាវនាវនោះឡើយ។ តែផលបុណ្យនៃការអំពាវនាវរបស់ខ្ញុំ គឺនៅលើម្ចាស់ដែលគ្រប់គ្រងពិភពទាំងអស់។

أَتَبْنُونَ بِكُلِّ رِيعٍ ءَايَةً تَعْبَثُونَ ﴿١٢٨﴾

១២៨-តើពួកអ្នកសាងសង់អាគារស្ដឹមស្ដៃនៅគ្រប់ទីកន្លែងដែលខ្ពស់ដើម្បីជាការលេងសើចឬ?

وَتَتَّخِذُونَ مَصَانِعَ لَعَلَّكُمْ تَخْلُدُونَ ﴿١٢٩﴾

១២៩-ហើយតើពួកអ្នកសាងសង់បណ្ដាវិមានដ៏ប្រណីតនេះពួកអ្នកសង្ឃឹមថានឹងមានជីវិតអមតៈឬ?

وَإِذَا بَطَشْتُم بَطَشْتُمْ جَبَّارِينَ ﴿١٣٠﴾

១៣០-ហើយនៅពេលពួកអ្នកបានវាយធ្វើបាប (នរណាម្នាក់) ពួកអ្នកបានវាយធ្វើបាបដោយព្រហើនកោងកាច។

فَٱتَّقُوا۟ ٱللَّهَ وَأَطِيعُونِ ﴿١٣١﴾

១៣១-ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាម

ខ្ញុំចុះ ។

وَٱتَّقُواْ ٱلَّذِىٓ أَمَدَّكُم بِمَا تَعۡلَمُونَ ﴿١٣٢﴾

១៣២-ហើយចូរពួកអ្នកកោតខ្លាចចំពោះអ្នកដែលបានប្រទាន ឱ្យពួកអ្នកនូវអ្វីដែលពួកអ្នកដឹង ។

أَمَدَّكُم بِأَنۡعَٰمٖ وَبَنِينَ ﴿١٣٣﴾

១៣៣-ទ្រង់បានប្រទានឱ្យពួកអ្នកនូវសត្វពាហនៈនិងកូនចៅ ។

وَجَنَّٰتٖ وَعُيُونٍ ﴿١٣٤﴾

១៣៤-និងបណ្ដាសួនឧទ្យាន ហើយនិងប្រភពទឹកជាច្រើន ។

إِنِّىٓ أَخَافُ عَلَيۡكُمۡ عَذَابَ يَوۡمٍ عَظِيمٖ ﴿١٣٥﴾

១៣៥-ពិតប្រាកដណាស់ ខ្ញុំខ្លាចពួកអ្នកទទួលរងនូវទារុណកម្ម នៅថ្ងៃដ៏ធំធេង( ថ្ងៃបរលោក) ។

قَالُواْ سَوَآءٌ عَلَيۡنَآ أَوَعَظۡتَ أَمۡ لَمۡ تَكُن مِّنَ ٱلۡوَٰعِظِينَ ﴿١٣٦﴾

១៣៦-ពួកគេបានតបថាៈ គឺស្មើគ្នាទេសម្រាប់ពួកយើង ទោះបី ជាអ្នកបានដាស់តឿន ឬមិនមែនជាអ្នកដាស់តឿន( ពួកយើង) ក៏ដោយ ។

إِنۡ هَٰذَآ إِلَّا خُلُقُ ٱلۡأَوَّلِينَ ﴿١٣٧﴾

១៣៧-( សាសនារបស់ពួកយើង) នេះគ្មានអ្វីក្រៅពីសាសនា របស់អ្នកជំនាន់មុននោះឡើយ ។

وَمَا نَحۡنُ بِمُعَذَّبِينَ ﴿١٣٨﴾

១៣៨-ហើយពួកយើងក៏មិនមែនជាអ្នកដែលត្រូវគេដាក់ ទារុណកម្មនោះដែរ ។

فَكَذَّبُوهُ فَأَهۡلَكۡنَٰهُمۡۚ إِنَّ فِى ذَٰلِكَ لَأٓيَةٗۖ وَمَا كَانَ أَكۡثَرُهُم مُّؤۡمِنِينَ ﴿١٣٩﴾

១៣៩-ដូច្នេះ ពួកគេបានបដិសេធនឹងគេ( ហ៊ូទ) ហើយយើង ក៏បានបំផ្លាញពួកគេឱ្យវិនាសអន្តរាយ ។ ពិតប្រាកដណាស់ នៅក្នុង ព្រឹត្តិការណ៍នោះគឺជាភស្តុតាងមួយដ៏ច្បាស់លាស់ ។ តែពួកគេភាគ ច្រើនគឺគ្មានជំនឿឡើយ ។

وَإِنَّ رَبَّكَ لَهُوَ ٱلۡعَزِيزُ ٱلرَّحِيمُ ﴿١٤٠﴾

១៤០-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាម្ចាស់មហា ខ្លាំងពូកែ មហាអាណិតស្រឡាញ់ ។

كَذَّبَتۡ ثَمُودُ ٱلۡمُرۡسَلِينَ ﴿١٤١﴾

១៤១-ក្រុមរបស់សាមូដបានបដិសេធនឹងបណ្ដាអ្នកនាំសារ ។

إِذۡ قَالَ لَهُمۡ أَخُوهُمۡ صَٰلِحٌ أَلَا تَتَّقُونَ ﴿١٤٢﴾

១៤២-នៅពេលសឡេះដែលជាបងប្អូនរបស់ពួកគេបានពោល ទៅកាន់ពួកគេថាៈ តើពួកអ្នកមិនកោតខ្លាចអល់ឡោះទេឬ?

إِنِّى لَكُمۡ رَسُولٌ أَمِينٞ ﴿١٤٣﴾

១៤៣-ពិតប្រាកដណាស់ ខ្ញុំគឺជាអ្នកនាំសារម្នាក់ដ៏ស្មោះត្រង់ សម្រាប់ពួកអ្នក ។

១៤៤-ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាមខ្ញុំចុះ។

فَٱتَّقُواْ ٱللَّهَ وَأَطِيعُونِ ١٤٤

១៤៥-ខ្ញុំមិនស្នើសុំពីពួកអ្នកនូវកម្រៃណាមួយចំពោះការអំពាវនាវនោះឡើយ។ តែផលបុណ្យនៃការអំពាវនាវរបស់ខ្ញុំគឺនៅលើម្ចាស់ដែលគ្រប់គ្រងពិភពទាំងអស់។

وَمَآ أَسۡـَٔلُكُمۡ عَلَيۡهِ مِنۡ أَجۡرٍۖ إِنۡ أَجۡرِيَ إِلَّا عَلَىٰ رَبِّ ٱلۡعَٰلَمِينَ ١٤٥

១៤៦-តើពួកអ្នក(នឹកស្មានថា) គេនឹងទុកឱ្យពួកអ្នកសប្បាយនឹងអ្វីដែលមាននៅទីនេះ(សម្បត្តិលោកិយ)ដោយសុវត្ថិភាពឬ?

أَتُتۡرَكُونَ فِي مَا هَٰهُنَآ ءَامِنِينَ ١٤٦

១៤៧-នៅក្នុងសួនឧទ្យាននានា ហើយនិងប្រភពទឹកជាច្រើន។

فِي جَنَّٰتٖ وَعُيُونٖ ١٤٧

១៤៨-និងដំណាំដាំដុះ និងដើមល្មើដែលផ្លែរបស់វាទន់ផ្អែមឆ្ងាញ់។

وَزُرُوعٖ وَنَخۡلٖ طَلۡعُهَا هَضِيمٞ ١٤٨

១៤៩-ហើយពួកអ្នកចោះភ្នំជាច្រើនធ្វើជាផ្ទះយ៉ាងស្ទាត់ជំនាញ។

وَتَنۡحِتُونَ مِنَ ٱلۡجِبَالِ بُيُوتٗا فَٰرِهِينَ ١٤٩

១៥០-ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាមខ្ញុំចុះ។

فَٱتَّقُواْ ٱللَّهَ وَأَطِيعُونِ ١٥٠

១៥១-ហើយចូរពួកអ្នកកុំប្រតិបត្តិតាមបទបញ្ជារបស់ពួកដែលបំពានឱ្យសោះ។

وَلَا تُطِيعُوٓاْ أَمۡرَ ٱلۡمُسۡرِفِينَ ١٥١

១៥២-ដែលពួកគេបង្កវិនាសកម្មនៅលើផែនដី និងមិនកែខ្លួនឡើយ។

ٱلَّذِينَ يُفۡسِدُونَ فِي ٱلۡأَرۡضِ وَلَا يُصۡلِحُونَ ١٥٢

១៥៣-ពួកគេបានឆ្លើយថា: តាមពិតអ្នកគ្រាន់តែជាអ្នកដែលស្ថិតក្នុងចំណោមពួកដែលត្រូវមន្តអាគមប៉ុណ្ណោះ។

قَالُوٓاْ إِنَّمَآ أَنتَ مِنَ ٱلۡمُسَحَّرِينَ ١٥٣

១៥៤-អ្នកមិនមែនជាអ្វី ក្រៅពីជាមនុស្សធម្មតាដូចពួកយើងនោះឡើយ។ ដូច្នេះ ចូរអ្នកនាំភស្តុតាងណាមួយមក ប្រសិនបើអ្នកជាអ្នកដែលស្ថិតក្នុងចំណោមអ្នកដែលនិយាយត្រឹមត្រូវមែននោះ។

مَآ أَنتَ إِلَّا بَشَرٞ مِّثۡلُنَا فَأۡتِ بِـَٔايَةٍ إِن كُنتَ مِنَ ٱلصَّٰدِقِينَ ١٥٤

១៥៥-គាត់(សឡេះ)បានពោលថា: នេះគឺជាសត្វអូដ្ឋញីមួយដែលវាមានចំណែកផឹកទឹក ហើយសម្រាប់ពួកអ្នកក៏មានចំណែកផឹកទឹកនៃថ្ងៃដែលគេកំណត់ជាក់លាក់(ទៅតាមវេនដែលគេកំណត់)

قَالَ هَٰذِهِۦ نَاقَةٞ لَّهَا شِرۡبٞ وَلَكُمۡ شِرۡبُ يَوۡمٖ مَّعۡلُومٖ ١٥٥

ដែរ ។

១៥៦-ហើយពួកអ្នកកុំប៉ះពាល់វា ដោយប្រការអាក្រក់ណាមួយឱ្យសោះ ព្រោះវាជាហេតុនាំឱ្យទារុណកម្មនៃថ្ងៃដ៏ធំធេងនឹងធ្លាក់មកលើពួកអ្នកជាមិនខាន ។

១៥៧-តែពួកគេបានសំឡេះវាទៅវិញ រួចមកពួកគេក៏បានក្លាយជាអ្នកដែលមានវិប្បដិសារី ។

១៥៨-ក្រោយមកទារុណកម្មបានឆក់យកពួកគេ ។ ពិតប្រាកដណាស់នៅក្នុងព្រឹត្តិការណ៍នោះគឺជាភស្តុតាងមួយដ៏ច្បាស់លាស់ ។ តែពួកគេភាគច្រើនគឺគ្មានជំនឿឡើយ ។

១៥៩-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាម្ចាស់មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់ ។

១៦០-ក្រុមរបស់លូតបានបដិសេធនឹងបណ្ដាអ្នកនាំសារ ។

១៦១-នៅពេលលូតដែលជាបងប្អូនរបស់ពួកគេបានពោលទៅកាន់ពួកគេថា: តើពួកអ្នកមិនកោតខ្លាចអល់ឡោះទេឬ?

១៦២-ពិតប្រាកដណាស់ ខ្ញុំគឺជាអ្នកនាំសារម្នាក់ដ៏ស្មោះត្រង់សម្រាប់ពួកអ្នក ។

១៦៣-ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាមខ្ញុំចុះ ។

១៦៤-ខ្ញុំមិនស្នើសុំពីពួកអ្នកនូវកម្រៃណាមួយចំពោះការអំពាវនាវនោះឡើយ ។ តែផលបុណ្យនៃការអំពាវនាវរបស់ខ្ញុំគឺនៅលើម្ចាស់ ដែលគ្រប់គ្រងពិភពទាំងអស់ ។

១៦៥-ហេតុអ្វីបានជាពួកអ្នករួមភេទជាមួយនឹងបុរសដូចគ្នា (ដែលមិនធ្លាប់មានពីមុនមក) នៅក្នុងពិភពលោកយ៉ាងដូច្នេះ?

១៦៦-ហើយពួកអ្នកបែរជាបោះបង់នូវអ្វី (ស្ត្រី) ដែលម្ចាស់របស់ពួកអ្នកបានបង្កើតសម្រាប់ពួកអ្នក ដែលជាភរិយារបស់ពួកអ្នកទៅវិញ ។ ផ្ទុយទៅវិញ ពួកអ្នកជាក្រុមដែលបំពាន (នឹងបទបញ្ញារបស់អល់ឡោះ) ។

وَلَا تَمَسُّوهَا بِسُوٓءٖ فَيَأۡخُذَكُمۡ عَذَابُ يَوۡمٍ عَظِيمٖ ١٥٦

فَعَقَرُوهَا فَأَصۡبَحُواْ نَٰدِمِينَ ١٥٧

فَأَخَذَهُمُ ٱلۡعَذَابُۚ إِنَّ فِي ذَٰلِكَ لَأٓيَةٗۖ وَمَا كَانَ أَكۡثَرُهُم مُّؤۡمِنِينَ ١٥٨

وَإِنَّ رَبَّكَ لَهُوَ ٱلۡعَزِيزُ ٱلرَّحِيمُ ١٥٩

كَذَّبَتۡ قَوۡمُ لُوطٍ ٱلۡمُرۡسَلِينَ ١٦٠

إِذۡ قَالَ لَهُمۡ أَخُوهُمۡ لُوطٌ أَلَا تَتَّقُونَ ١٦١

إِنِّي لَكُمۡ رَسُولٌ أَمِينٞ ١٦٢

فَٱتَّقُواْ ٱللَّهَ وَأَطِيعُونِ ١٦٣

وَمَآ أَسۡـَٔلُكُمۡ عَلَيۡهِ مِنۡ أَجۡرٍۖ إِنۡ أَجۡرِيَ إِلَّا عَلَىٰ رَبِّ ٱلۡعَٰلَمِينَ ١٦٤

أَتَأۡتُونَ ٱلذُّكۡرَانَ مِنَ ٱلۡعَٰلَمِينَ ١٦٥

وَتَذَرُونَ مَا خَلَقَ لَكُمۡ رَبُّكُم مِّنۡ أَزۡوَٰجِكُمۚ بَلۡ أَنتُمۡ قَوۡمٌ عَادُونَ ١٦٦

១៦៧-ពួកគេបាននិយាយថា: ប្រសិនបើអ្នកមិនព្រមឈប់ទេនោះ ឱលូត! អ្នកច្បាស់ជាស្ថិតក្នុងចំណោមពួកដែលត្រូវគេបណ្តេញចេញ( ពីភូមិស្រុក) មិនខាន ។

قَالُواْ لَئِن لَّمۡ تَنتَهِ يَٰلُوطُ لَتَكُونَنَّ مِنَ ٱلۡمُخۡرَجِينَ ١٦٧

១៦៨-គាត់( លូត) បានតបទៅវិញថា: ពិតប្រាកដណាស់ ខ្ញុំជាអ្នកដែលស្អប់ខ្ពើមបំផុតចំពោះទង្វើរបស់ពួកអ្នក ។

قَالَ إِنِّي لِعَمَلِكُم مِّنَ ٱلۡقَالِينَ ١٦٨

១៦៩-( លូតបានបួងសួងសុំថា) ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាសង្គ្រោះខ្ញុំព្រមទាំងក្រុមគ្រួសាររបស់ខ្ញុំពីអ្វីដែលពួកគេកំពុងធ្វើនេះផង ។

رَبِّ نَجِّنِي وَأَهۡلِي مِمَّا يَعۡمَلُونَ ١٦٩

១៧០-ដូច្នេះ យើងក៏បានសង្គ្រោះគេ ព្រមទាំងក្រុមគ្រួសាររបស់គេ( ឱ្យរួចផុតពីទារុណកម្មរបស់យើង) ទាំងអស់គ្នា ។

فَنَجَّيۡنَٰهُ وَأَهۡلَهُۥٓ أَجۡمَعِينَ ١٧٠

១៧១-លើកលែងតែស្ត្រីជរាម្នាក់( ប្រពន្ធរបស់គេ) ប៉ុណ្ណោះដែលស្ថិតក្នុងចំណោមអ្នកដែលវិនាស( ក្នុងទារុណកម្ម) ។

إِلَّا عَجُوزٗا فِي ٱلۡغَٰبِرِينَ ١٧١

១៧២-បន្ទាប់មកយើងបានបំផ្លាញពួកដ៏ទៃទៀត ។

ثُمَّ دَمَّرۡنَا ٱلۡأٓخَرِينَ ١٧٢

១៧៣-ហើយយើងបានបញ្ចុះភ្លៀង( ជាដុំថ្ម) ទៅលើពួកគេ ។ ហើយភ្លៀងដែលបានធ្លាក់លើពួកដែលត្រូវបានគេព្រមាននោះអាក្រក់បំផុត ។

وَأَمۡطَرۡنَا عَلَيۡهِم مَّطَرٗاۖ فَسَآءَ مَطَرُ ٱلۡمُنذَرِينَ ١٧٣

១៧៤-ជាការពិតណាស់នៅក្នុងព្រឹត្តិការណ៍នោះគឺជាភស្តុតាងមួយដ៏ច្បាស់លាស់ ។ តែពួកគេភាគច្រើនគ្មានជំនឿឡើយ ។

إِنَّ فِي ذَٰلِكَ لَأٓيَةٗۖ وَمَا كَانَ أَكۡثَرُهُم مُّؤۡمِنِينَ ١٧٤

១៧៥-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាម្ចាស់មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់ ។

وَإِنَّ رَبَّكَ لَهُوَ ٱلۡعَزِيزُ ٱلرَّحِيمُ ١٧٥

១៧៦-ក្រុមរបស់អៃកាស់[1] បានបដិសេធនឹងបណ្តាអ្នកនាំសារ ។

كَذَّبَ أَصۡحَٰبُ لۡـَٔيۡكَةِ ٱلۡمُرۡسَلِينَ ١٧٦

១៧៧-នៅពេលដែលស៊្វូអែបបានពោលទៅកាន់ពួកគេថា: តើពួកអ្នកមិនកោតខ្លាចអល់ឡោះទេឬ?

إِذۡ قَالَ لَهُمۡ شُعَيۡبٌ أَلَا تَتَّقُونَ ١٧٧

១៧៨-ពិតប្រាកដណាស់ ខ្ញុំគឺជាអ្នកនាំសារម្នាក់ដ៏ស្មោះត្រង់

إِنِّي لَكُمۡ رَسُولٌ أَمِينٞ ١٧٨

១-គឺជាក្រុមមួយដែលមានដីពោពេញទៅដោយដំណាំចំការផ្សេងៗនៅស្រុកម៉ាត់យ៉ាន់ ។

សម្រាប់ពួកអ្នក។

فَٱتَّقُواْ ٱللَّهَ وَأَطِيعُونِ ﴿١٧٩﴾

១៧៩-ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាមខ្ញុំចុះ។

وَمَآ أَسۡـَٔلُكُمۡ عَلَيۡهِ مِنۡ أَجۡرٍۖ إِنۡ أَجۡرِيَ إِلَّا عَلَىٰ رَبِّ ٱلۡعَٰلَمِينَ ﴿١٨٠﴾

១៨០-ខ្ញុំមិនស្នើសុំកម្រៃណាមួយពីពួកអ្នកចំពោះការអំពាវនាវនោះឡើយ។ តែផលបុណ្យនៃការអំពាវនាវរបស់ខ្ញុំគឺនៅលើម្ចាស់ ដែលគ្រប់គ្រងពិភពទាំងអស់។

۞ أَوۡفُواْ ٱلۡكَيۡلَ وَلَا تَكُونُواْ مِنَ ٱلۡمُخۡسِرِينَ ﴿١٨١﴾

១៨១-ចូរពួកអ្នកបំពេញរង្វាល់ឱ្យបានត្រឹមត្រូវ ហើយចូរពួកអ្នកកុំធ្វើខ្លួនជាអ្នកដែលតែបំបាត់ឱ្យសោះ។

وَزِنُواْ بِٱلۡقِسۡطَاسِ ٱلۡمُسۡتَقِيمِ ﴿١٨٢﴾

១៨២-ចូរពួកអ្នកថ្លឹងនឹងជញ្ជីងដែលត្រឹមត្រូវ។

وَلَا تَبۡخَسُواْ ٱلنَّاسَ أَشۡيَآءَهُمۡ وَلَا تَعۡثَوۡاْ فِي ٱلۡأَرۡضِ مُفۡسِدِينَ ﴿١٨٣﴾

១៨៣-ហើយចូរពួកអ្នកកុំកេងប្រវ័ញ្ចមនុស្សលោកនូវកម្មសិទ្ធិរបស់ពួកគេ។ ហើយចូរពួកអ្នកកុំបង្កវិនាសកម្មនៅលើផែនដីនេះឱ្យសោះ។

وَٱتَّقُواْ ٱلَّذِي خَلَقَكُمۡ وَٱلۡجِبِلَّةَ ٱلۡأَوَّلِينَ ﴿١٨٤﴾

១៨៤-ហើយចូរពួកអ្នកកោតខ្លាចចំពោះអ្នកដែលបានបង្កើតពួកអ្នក និងពួកជំនាន់មុន។

قَالُوٓاْ إِنَّمَآ أَنتَ مِنَ ٱلۡمُسَحَّرِينَ ﴿١٨٥﴾

១៨៥-ពួកគេបានឆ្លើយថា: តាមពិត អ្នកគ្រាន់តែជាអ្នកដែលស្ថិតក្នុងចំណោមពួកដែលត្រូវមន្តអាគមប៉ុណ្ណោះ។

وَمَآ أَنتَ إِلَّا بَشَرٞ مِّثۡلُنَا وَإِن نَّظُنُّكَ لَمِنَ ٱلۡكَٰذِبِينَ ﴿١٨٦﴾

១៨៦-ហើយអ្នកក៏មិនមែនជាអ្វីក្រៅពីជាមនុស្សធម្មតាដូចជាពួកយើងនោះឡើយ ហើយយើងជឿជាក់ថា អ្នកពិតជាស្ថិតនៅក្នុងចំណោមអ្នកដែលភូតកុហក។

فَأَسۡقِطۡ عَلَيۡنَا كِسَفٗا مِّنَ ٱلسَّمَآءِ إِن كُنتَ مِنَ ٱلصَّٰدِقِينَ ﴿١٨٧﴾

១៨៧-ដូច្នេះ ចូរអ្នកទម្លាក់មួយបំណែក(ទារុណកម្ម)ពីលើមេឃមកលើពួកយើងចុះ ប្រសិនបើអ្នកស្ថិតនៅក្នុងចំណោមអ្នកដែលត្រឹមត្រូវមែននោះ។

قَالَ رَبِّيٓ أَعۡلَمُ بِمَا تَعۡمَلُونَ ﴿١٨٨﴾

១៨៨-គាត់(ស៊ូអែប)បាននិយាយថា: ម្ចាស់របស់ខ្ញុំដឹងបំផុតចំពោះអ្វីដែលពួកអ្នកកំពុងធ្វើ។

فَكَذَّبُوهُ فَأَخَذَهُمۡ عَذَابُ يَوۡمِ ٱلظُّلَّةِۚ إِنَّهُۥ

១៨៩-ហើយពួកគេបានបដិសេធនឹងគាត់ ដូច្នេះទារុណកម្មនៃថ្ងៃដែលភ្លើងចេញពីម្លប់ពពកបានធ្លាក់មកលើពួកគេ។ពិតប្រាកដណាស់

كَانَ عَذَابَ يَوۡمٍ عَظِيمٍ ١٨٩

វាគឺជាទារុណកម្មនៃថ្ងៃដ៏ធំធេង។

إِنَّ فِي ذَٰلِكَ لَأٓيَةٗۖ وَمَا كَانَ أَكۡثَرُهُم مُّؤۡمِنِينَ ١٩٠

១៩០-ពិតប្រាកដណាស់ នៅក្នុងព្រឹត្តិការណ៍នោះគឺជាភស្តុតាងមួយដ៏ច្បាស់លាស់។ តែពួកគេភាគច្រើនគឺគ្មានជំនឿឡើយ។

وَإِنَّ رَبَّكَ لَهُوَ ٱلۡعَزِيزُ ٱلرَّحِيمُ ١٩١

១៩១-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាម្ចាស់មហាខ្លាំងក្លា មហាអាណិតស្រឡាញ់។

وَإِنَّهُۥ لَتَنزِيلُ رَبِّ ٱلۡعَٰلَمِينَ ١٩٢

១៩២-ហើយពិតប្រាកដណាស់ គម្ពីរគួរអានគឺជាការបញ្ចុះរបស់ម្ចាស់នៃពិភពទាំងអស់។

نَزَلَ بِهِ ٱلرُّوحُ ٱلۡأَمِينُ ١٩٣

១៩៣-ដែលរ៉ូហុលអាមីន(ជីព្រីល) បាននាំវាមក។

عَلَىٰ قَلۡبِكَ لِتَكُونَ مِنَ ٱلۡمُنذِرِينَ ١٩٤

១៩៤-(ដោយបានសូត្រវា) ទៅលើដួងចិត្តរបស់អ្នកដើម្បីឱ្យអ្នកក្លាយជាអ្នកដែលស្ថិតក្នុងចំណោមអ្នកដាស់តឿនព្រមាន ។

بِلِسَانٍ عَرَبِيّٖ مُّبِينٖ ١٩٥

១៩៥-តាមភាសាអារ៉ាប់យ៉ាងជាក់ច្បាស់។

وَإِنَّهُۥ لَفِي زُبُرِ ٱلۡأَوَّلِينَ ١٩٦

១៩៦-ហើយពិតប្រាកដណាស់ វា(គម្ពីរគួរអាន)គឺមាន(បញ្ជាក់ប្រាប់) នៅក្នុងបណ្ដាគម្ពីរមុនៗ។

أَوَلَمۡ يَكُن لَّهُمۡ ءَايَةً أَن يَعۡلَمَهُۥ عُلَمَٰٓؤُاْ بَنِيٓ إِسۡرَٰٓءِيلَ ١٩٧

១៩៧-តើវាមិនមែនជាភស្តុតាងមួយសម្រាប់ពួកគេ(ពួកមូស្ហរីគីន)ទេឬ ដែលមានអ្នកចេះដឹងនៃអំបូរអ៊ីស្រាអែលដឹងពីវានោះ?

وَلَوۡ نَزَّلۡنَٰهُ عَلَىٰ بَعۡضِ ٱلۡأَعۡجَمِينَ ١٩٨

១៩៨-ហើយប្រសិនបើយើងបានបញ្ចុះវាទៅលើពូជសាសន៍មួយចំនួនក្រៅពីជនជាតិអារ៉ាប់។

فَقَرَأَهُۥ عَلَيۡهِم مَّا كَانُواْ بِهِۦ مُؤۡمِنِينَ ١٩٩

១៩៩-ហើយគេ(អ្នកដែលមិនមែនជនជាតិអារ៉ាប់) បានសូត្រវាឱ្យពួកគេស្ដាប់ ពួកគេនៅតែមិនជឿនឹងវាដដែល។

كَذَٰلِكَ سَلَكۡنَٰهُ فِي قُلُوبِ ٱلۡمُجۡرِمِينَ ٢٠٠

២០០-ដូច្នោះហើយ យើងបានបញ្ចូលវា (ការប្រឆាំង) ទៅក្នុងដួងចិត្តពួកដែលប្រព្រឹត្តអំពើអាក្រក់។

لَا يُؤۡمِنُونَ بِهِۦ حَتَّىٰ يَرَوُاْ ٱلۡعَذَابَ ٱلۡأَلِيمَ ٢٠١

២០១-ពួកគេនឹងមិនជឿចំពោះវាឡើយ លុះត្រាតែពួកគេឃើញនូវទារុណកម្មយ៉ាងឈឺចាប់។

٢٠٢-ក្រោយមក ទារុណកម្មក៏មកដល់ពួកគេមួយរំពេច ដោយពួកគេមិនដឹងខ្លួនឡើយ ។

فَيَأۡتِيَهُم بَغۡتَةٗ وَهُمۡ لَا يَشۡعُرُونَ ٢٠٢

២០៣-ពេលនោះពួកគេនិយាយថាៈ តើពួកយើងគឺជាអ្នកដែលត្រូវគេពន្យារពេល(ដើម្បីសារភាពនូវទោសកំហុស)ដែរឬទេ?

فَيَقُولُواْ هَلۡ نَحۡنُ مُنظَرُونَ ٢٠٣

២០៤-ដូច្នេះ តើពួកគេសុំឱ្យទារុណកម្មរបស់យើងធ្លាក់មកលើពួកគេភ្លាមៗឬ?

أَفَبِعَذَابِنَا يَسۡتَعۡجِلُونَ ٢٠٤

២០៥-តើអ្នក(មូហាំម៉ាត់)ដឹងទេ ប្រសិនបើយើងបានឱ្យពួកគេសោយសុខជាច្រើនឆ្នាំ

أَفَرَءَيۡتَ إِن مَّتَّعۡنَٰهُمۡ سِنِينَ ٢٠٥

២០៦-បន្ទាប់មកអ្វី(ទារុណកម្ម)ដែលគេបានសន្យាចំពោះពួកគេបានធ្លាក់មកលើពួកគេ

ثُمَّ جَآءَهُم مَّا كَانُواْ يُوعَدُونَ ٢٠٦

២០៧-វាមិនអាចជួយពួកគេបានឡើយនូវអ្វីៗដែលគេ(អល់ឡោះ)ធ្លាប់ឱ្យពួកគេសោយសុខនោះ?

مَآ أَغۡنَىٰ عَنۡهُم مَّا كَانُواْ يُمَتَّعُونَ ٢٠٧

២០៨-ហើយយើងមិនបានបំផ្លាញភូមិស្រុកណាមួយឡើយ លើកលែងតែវាមានអ្នកដាស់តឿនព្រមានជាមុន ។

وَمَآ أَهۡلَكۡنَا مِن قَرۡيَةٍ إِلَّا لَهَا مُنذِرُونَ ٢٠٨

២០៩-ដើម្បីជាការរំលឹក(ដល់ពួកគេ) ។ ហើយយើងមិនមែនជាអ្នកដែលបំពានឡើយ ។

ذِكۡرَىٰ وَمَا كُنَّا ظَٰلِمِينَ ٢٠٩

២១០-ហើយស្ហៃតនមិនមែនជាអ្នកបញ្ចុះវា(គម្ពីរគួរអាន) មកឡើយ ។

وَمَا تَنَزَّلَتۡ بِهِ ٱلشَّيَٰطِينُ ٢١٠

២១១-ហើយវាមិនសក្តិសមទេចំពោះពួកវា(ស្ហៃតន) ហើយពួកវាក៏គ្មានសមត្ថភាព(បញ្ចុះវា)ដែរ ។

وَمَا يَنۢبَغِي لَهُمۡ وَمَا يَسۡتَطِيعُونَ ٢١١

២១២-(ព្រោះ)ពួកវាពិតជាត្រូវបានគេបណ្តេញចេញពីការលបស្តាប់(គម្ពីរគួរអាន) ។

إِنَّهُمۡ عَنِ ٱلسَّمۡعِ لَمَعۡزُولُونَ ٢١٢

២១៣-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)កុំគោរពសក្ការៈម្ចាស់ណាផ្សេងរួមជាមួយអល់ឡោះឱ្យសោះ ដែលជាហេតុធ្វើឱ្យអ្នកស្ថិតក្នុងចំណោមអ្នកដែលត្រូវគេធ្វើទារុណកម្ម ។

فَلَا تَدۡعُ مَعَ ٱللَّهِ إِلَٰهًا ءَاخَرَ فَتَكُونَ مِنَ ٱلۡمُعَذَّبِينَ ٢١٣

២១៤-ហើយចូរអ្នកដាស់តឿនព្រមានដល់សាច់ញាតិរបស់អ្នក

وَأَنذِرۡ عَشِيرَتَكَ ٱلۡأَقۡرَبِينَ ٢١٤

ដែលជិតបំផុតចុះ។

٢١٥-ហើយចូរអ្នកបន្ទាបខ្លួនប្រាណរបស់អ្នកចំពោះអ្នកណាដែលបានធ្វើតាមអ្នកអំពីបណ្តាអ្នកដែលមានជំនឿ។

وَٱخۡفِضۡ جَنَاحَكَ لِمَنِ ٱتَّبَعَكَ مِنَ ٱلۡمُؤۡمِنِينَ ﴿٢١٥﴾

២១៦-តែប្រសិនបើពួកគេប្រឆាំងនឹងអ្នកវិញនោះ ចូរអ្នកពោលថាៈ ពិតប្រាកដណាស់ ខ្ញុំមិនពាក់ព័ន្ធនឹងអ្វីដែលពួកអ្នកប្រព្រឹត្តឡើយ។

فَإِنۡ عَصَوۡكَ فَقُلۡ إِنِّي بَرِيٓءٞ مِّمَّا تَعۡمَلُونَ ﴿٢١٦﴾

២១៧-ហើយចូរអ្នកប្រគល់ការទុកចិត្តទៅចំពោះម្ចាស់មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់។

وَتَوَكَّلۡ عَلَى ٱلۡعَزِيزِ ٱلرَّحِيمِ ﴿٢١٧﴾

២១៨-ដែលទ្រង់ឃើញអ្នកនៅពេលដែលអ្នកប្រតិបត្តិសឡាត(នាពេលយប់អាធ្រាត)។

ٱلَّذِي يَرَىٰكَ حِينَ تَقُومُ ﴿٢١٨﴾

២១៩-និងរាល់សកម្មភាពសឡាតរបស់អ្នកជាមួយបណ្តាអ្នកដែលសឡាត។

وَتَقَلُّبَكَ فِي ٱلسَّٰجِدِينَ ﴿٢١٩﴾

២២០-ពិតប្រាកដណាស់ ទ្រង់មហាឮ មហាដឹង។

إِنَّهُۥ هُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ﴿٢٢٠﴾

២២១-តើចង់ឱ្យខ្ញុំប្រាប់ពួកអ្នកដែរទេថា ស្ហៃតនចុះទៅលើអ្នកណា?

هَلۡ أُنَبِّئُكُمۡ عَلَىٰ مَن تَنَزَّلُ ٱلشَّيَٰطِينُ ﴿٢٢١﴾

២២២-ពួកវាចុះទៅលើរាល់ពួកភូតកុហកបោកប្រាស់ដែលមានបាបកម្មច្រើន។

تَنَزَّلُ عَلَىٰ كُلِّ أَفَّاكٍ أَثِيمٖ ﴿٢٢٢﴾

២២៣-ដោយពួកវាផ្តល់រាល់ការឮ(ពីម៉ាឡាអ៊ីកាត់ទៅចំពោះគ្រូមន្តអាគម) ហើយពួកគេភាគច្រើនជាពួកភូតកុហក។

يُلۡقُونَ ٱلسَّمۡعَ وَأَكۡثَرُهُمۡ كَٰذِبُونَ ﴿٢٢٣﴾

២២៤-ហើយពួកកវីនិពន្ធនោះ គឺពួកវង្វេងនឹងដើរតាមពួកគេ។

وَٱلشُّعَرَآءُ يَتَّبِعُهُمُ ٱلۡغَاوُۥنَ ﴿٢٢٤﴾

២២៥-តើអ្នកមិនបានឃើញទេឬ ពិតប្រាកដណាស់ ពួកគេ(ពួកកវីនិពន្ធ)និយាយគ្រប់បែបយ៉ាង(ពាក្យភូតកុហក និងពាក្យអាក្រក់ផ្សេងៗទៀត)នៅក្នុងកំណាព្យរបស់ពួកគេនោះ?

أَلَمۡ تَرَ أَنَّهُمۡ فِي كُلِّ وَادٖ يَهِيمُونَ ﴿٢٢٥﴾

២២៦-ហើយពិតប្រាកដណាស់ ពួកគេនិយាយនូវអ្វីដែលពួកគេមិនធ្វើ។

وَأَنَّهُمۡ يَقُولُونَ مَا لَا يَفۡعَلُونَ ﴿٢٢٦﴾

إِلَّا ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ وَذَكَرُواْ
ٱللَّهَ كَثِيرًا وَٱنتَصَرُواْ مِنۢ بَعۡدِ مَا ظُلِمُواْۗ
وَسَيَعۡلَمُ ٱلَّذِينَ ظَلَمُوٓاْ أَيَّ مُنقَلَبٖ
يَنقَلِبُونَ ﴿٢٢٧﴾

២២៧-លើកលែងតែបណ្ដាអ្នកដែលមានជំនឿ(កវីនិពន្ធ) និងបានសាងអំពើល្អ ហើយនិងបានរំលឹកអល់ឡោះយ៉ាងច្រើន ព្រមទាំងពួកគេទទួលបានជ័យជំនះក្រោយពីពួកគេត្រូវគេបំពានរួចប៉ុណ្ណោះ។ ហើយពួកដែលបំពាននឹងដឹងថាៈ តើកន្លែងវិលត្រឡប់ណាមួយដែលពួកគេនឹងវិលត្រឡប់ទៅវិញនោះ?

## سورة النمل

## ជំពូកអាន់ណាំល៍

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

طسٓۚ تِلۡكَ ءَايَٰتُ ٱلۡقُرۡءَانِ وَكِتَابٖ
مُّبِينٍ ﴿١﴾

១-ត ស៊ីន។ នេះគឺជាអាយ៉ាត់ៗនៃគម្ពីរគួរអាននិងជាអាយ៉ាត់ៗនៃគម្ពីរដ៏ច្បាស់លាស់

هُدٗى وَبُشۡرَىٰ لِلۡمُؤۡمِنِينَ ﴿٢﴾

២-ដែលជាការចង្អុលបង្ហាញ(ដល់មនុស្សលោក)និងជាដំណឹងរីករាយដល់បណ្ដាអ្នកមានជំនឿ។

ٱلَّذِينَ يُقِيمُونَ ٱلصَّلَوٰةَ وَيُؤۡتُونَ ٱلزَّكَوٰةَ
وَهُم بِٱلۡأٓخِرَةِ هُمۡ يُوقِنُونَ ﴿٣﴾

៣-គឺបណ្ដាអ្នកដែលប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ដោយពួកគេជឿជាក់យ៉ាងច្បាស់ចំពោះថ្ងៃបរលោក។

إِنَّ ٱلَّذِينَ لَا يُؤۡمِنُونَ بِٱلۡأٓخِرَةِ زَيَّنَّا لَهُمۡ
أَعۡمَٰلَهُمۡ فَهُمۡ يَعۡمَهُونَ ﴿٤﴾

៤-ពិតប្រាកដណាស់ ពួកដែលគ្មានជំនឿនឹងថ្ងៃបរលោក យើងបានលំអសម្រាប់ពួកគេនូវអំពើ(អាក្រក់)របស់ពួកគេ។ ហើយពួកគេនឹងវង្វេងជារៀងរហូត។

أُوْلَٰٓئِكَ ٱلَّذِينَ لَهُمۡ سُوٓءُ ٱلۡعَذَابِ وَهُمۡ فِي
ٱلۡأٓخِرَةِ هُمُ ٱلۡأَخۡسَرُونَ ﴿٥﴾

៥-ពួកទាំងនោះហើយជាពួកដែលនឹងទទួលទារុណកម្មយ៉ាងឃោរឃៅ(នៅក្នុងលោកិយនេះ) ហើយនៅថ្ងៃបរលោកពួកគេគឺជាពួកដែលខាតបង់បំផុត។

وَإِنَّكَ لَتُلَقَّى ٱلۡقُرۡءَانَ مِن لَّدُنۡ حَكِيمٍ
عَلِيمٍ ﴿٦﴾

៦-ហើយពិតប្រាកដណាស់ អ្នក(មូហាំម៉ាត់)ត្រូវគេផ្ដល់ឱ្យនូវគម្ពីរគួរអានពីម្ចាស់មហាគតិបណ្ឌិត មហាដឹង។

إِذۡ قَالَ مُوسَىٰ لِأَهۡلِهِۦٓ إِنِّيٓ ءَانَسۡتُ نَارٗا
سَـَٔاتِيكُم مِّنۡهَا بِخَبَرٍ أَوۡ ءَاتِيكُم بِشِهَابٖ قَبَسٖ
لَّعَلَّكُمۡ تَصۡطَلُونَ ﴿٧﴾

៧-(ចូរចងចាំ)ខណៈដែលមូសាបានពោលទៅកាន់ក្រុមគ្រួសាររបស់គាត់ថាៈ ពិតប្រាកដណាស់ ខ្ញុំបានឃើញពន្លឺភ្លើងមួយ ខ្ញុំនឹងនាំដំណឹងខ្លះៗ(ពីការបង្ហាញផ្លូវ)ឱ្យពួកអ្នក ឬយកដុំភ្លើងមកបង្កាត់ឱ្យពួកអ្នកដើម្បីឱ្យពួកអ្នកកំដៅខ្លួន។

فَلَمَّا جَآءَهَا نُودِيَ أَنۢ بُورِكَ مَن فِي ٱلنَّارِ
وَمَنۡ حَوۡلَهَا وَسُبۡحَٰنَ ٱللَّهِ رَبِّ ٱلۡعَٰلَمِينَ ٨

៨-ហើយនៅពេលដែលគាត់(មូសា)ទៅដល់ពន្លឺភ្លើងនោះ ស្រាប់តែមានសំឡេងស្រែកហៅគាត់ថាៈ ពិតប្រាកដណាស់គេបានប្រសិទ្ធពរដល់អ្នកដែលនៅជិតពន្លឺភ្លើង និងអ្នកដែលនៅជុំវិញវា (ម៉ាឡាអ៊ីកាត់) ហើយអល់ឡោះមហាស្អាតស្អំ ជាម្ចាស់គ្រប់គ្រងនៃពិភពទាំងអស់។

يَٰمُوسَىٰٓ إِنَّهُۥٓ أَنَا ٱللَّهُ ٱلۡعَزِيزُ ٱلۡحَكِيمُ ٩

៩-ឱមូសា! ពិតប្រាកដណាស់ យើងនេះហើយជាអល់ឡោះដែលមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

وَأَلۡقِ عَصَاكَۚ فَلَمَّا رَءَاهَا تَهۡتَزُّ كَأَنَّهَا جَآنّٞ وَلَّىٰ
مُدۡبِرٗا وَلَمۡ يُعَقِّبۡۚ يَٰمُوسَىٰ لَا تَخَفۡ إِنِّي لَا
يَخَافُ لَدَيَّ ٱلۡمُرۡسَلُونَ ١٠

១០-ហើយចូរអ្នកបោះដំបងរបស់អ្នកចុះ។ ហើយនៅពេលដែលគាត់បានឃើញវាធ្វើចលនាដូចជាពស់ គាត់ក៏រត់ត្រឡប់ទៅវិញដោយមិនងាកក្រោយ។ (ពេលនោះទ្រង់មានបន្ទូលថា) ឱមូសា! ចូរអ្នកកុំភ័យខ្លាចឱ្យសោះ ពិតប្រាកដណាស់អ្នកនាំសារមិនភ័យខ្លាចនៅចំពោះមុខយើងឡើយ។

إِلَّا مَن ظَلَمَ ثُمَّ بَدَّلَ حُسۡنَۢا بَعۡدَ سُوٓءٖ فَإِنِّي
غَفُورٞ رَّحِيمٞ ١١

១១-ប៉ុន្តែអ្នកណាហើយដែលបានបំពាន បន្ទាប់មកគេបានយកអំពើល្អមកជំនួសវិញក្រោយពីគេបានប្រព្រឹត្តអំពើអាក្រក់ហើយនោះ ពិតប្រាកដណាស់ យើងមហាអភ័យទោស មហាអាណិតស្រឡាញ់។

وَأَدۡخِلۡ يَدَكَ فِي جَيۡبِكَ تَخۡرُجۡ بَيۡضَآءَ
مِنۡ غَيۡرِ سُوٓءٖۖ فِي تِسۡعِ ءَايَٰتٍ إِلَىٰ فِرۡعَوۡنَ
وَقَوۡمِهِۦٓۚ إِنَّهُمۡ كَانُواْ قَوۡمٗا فَٰسِقِينَ ١٢

១២- ហើយចូរអ្នកលូកដៃរបស់អ្នកចូលទៅក្នុងប្រឡោះកអាវរបស់អ្នកចុះ វានឹងចេញពន្លឺសថែងចាំង ដោយមិនមែនជាប្រការអាក្រក់ឡើយ។ (មុជីហ្សាត់ទាំងពីរនោះ) ក្នុងចំណោមមុជីហ្សាតទាំងប្រាំបួន(ដើម្បីឱ្យអ្នក) នាំទៅកាន់ហ្វៀរអោន និងក្រុមរបស់គេ ពិត ប្រាកដណាស់ពួកគេគឺជាក្រុមដែលល្មើសនឹងបទបញ្ជារបសយើង។

فَلَمَّا جَآءَتۡهُمۡ ءَايَٰتُنَا مُبۡصِرَةٗ قَالُواْ هَٰذَا سِحۡرٞ
مُّبِينٞ ١٣

១៣-តែនៅពេលដែលមុជីហ្សាត់របស់យើងបានមកដល់ពួកគេយ៉ាងជាក់ស្តែងហើយនោះ ពួកគេបាននិយាយថាៈ នេះគឺជាមន្តអាគមយ៉ាងច្បាស់លាស់។

وَجَحَدُواْ بِهَا وَٱسۡتَيۡقَنَتۡهَآ أَنفُسُهُمۡ
ظُلۡمٗا وَعُلُوّٗاۚ فَٱنظُرۡ كَيۡفَ كَانَ عَٰقِبَةُ

១៤-ហើយពួកគេបានបដិសេធនឹងវា(មុជីហ្សាត់) ទាំងបំពាននិងក្រអឺតក្រទម ខណៈដែលខ្លួនរបស់ពួកគេផ្ទាល់ជឿជាក់យ៉ាងច្បាស់នឹងវា។ ចូរអ្នក(មូហាំម៉ាត់) មើលចុះ តើលទ្ធផលចុងក្រោយរបស់

ٱلۡمُفۡسِدِينَ ١٤

ពួកដែលបង្កវិនាសកម្ម(នៅក្នុងលោកិយ)យ៉ាងដូចម្ដេច?

وَلَقَدۡ ءَاتَيۡنَا دَاوُۥدَ وَسُلَيۡمَٰنَ عِلۡمٗاۖ وَقَالَا
ٱلۡحَمۡدُ لِلَّهِ ٱلَّذِي فَضَّلَنَا عَلَىٰ كَثِيرٖ مِّنۡ عِبَادِهِ
ٱلۡمُؤۡمِنِينَ ١٥

១៥-ហើយជាការពិតណាស់ យើងបានផ្ដល់ចំណេះដឹងដ៏ខ្ពង់ខ្ពស់ឱ្យដាវូដនិងស៊ូឡៃម៉ាន។ ហើយគាត់ទាំងពីរបានពោលថា: រាល់ការសរសើរគឺចំពោះអល់ឡោះដែលបានលើកតម្កើងយើងខ្ញុំទាំងពីរច្រើនជាងគេក្នុងចំណោមខ្ញុំរបស់ទ្រង់ដែលមានជំនឿ។

وَوَرِثَ سُلَيۡمَٰنُ دَاوُۥدَۖ وَقَالَ يَٰٓأَيُّهَا ٱلنَّاسُ
عُلِّمۡنَا مَنطِقَ ٱلطَّيۡرِ وَأُوتِينَا مِن كُلِّ شَيۡءٍۖ إِنَّ
هَٰذَا لَهُوَ ٱلۡفَضۡلُ ٱلۡمُبِينُ ١٦

១៦-ក្រោយមកស៊ូឡៃម៉ានបានទទួលមរតកពី(បិតារបស់គាត់)ដាវូដ។ ហើយគាត់បានពោលថា: ឱមនុស្សលោក! គេបានបង្រៀនយើងឱ្យចេះនិយាយភាសាសត្វ និងបានផ្ដល់ឱ្យយើងនូវអ្វីៗគ្រប់បែបយ៉ាង។ ពិតប្រាកដណាស់ នេះគឺជាការប្រោសប្រទានដ៏ច្បាស់លាស់។

وَحُشِرَ لِسُلَيۡمَٰنَ جُنُودُهُۥ مِنَ ٱلۡجِنِّ وَٱلۡإِنسِ
وَٱلطَّيۡرِ فَهُمۡ يُوزَعُونَ ١٧

១៧-គេបានប្រមូលឱ្យស៊ូឡៃម៉ាននូវកងទ័ពរបស់គាត់អំពីជិននិងមនុស្ស ហើយនិងសត្វស្លាប រួចមកពួកគេត្រូវគេបែងចែកជាក្រុមៗ។

حَتَّىٰٓ إِذَآ أَتَوۡاْ عَلَىٰ وَادِ ٱلنَّمۡلِ قَالَتۡ نَمۡلَةٞ
يَٰٓأَيُّهَا ٱلنَّمۡلُ ٱدۡخُلُواْ مَسَٰكِنَكُمۡ لَا
يَحۡطِمَنَّكُمۡ سُلَيۡمَٰنُ وَجُنُودُهُۥ وَهُمۡ لَا
يَشۡعُرُونَ ١٨

១៨-លុះនៅពេលពួកគេបានទៅដល់ជ្រលងសត្វស្រមោច មេក្រុមស្រមោចបាននិយាយថា: ឱសត្វស្រមោចទាំងអស់! ចូរពួកអ្នកចូលសំបុករបស់ពួកអ្នក ដើម្បីកុំឱ្យស៊ូឡៃម៉ាន និងកងទ័ពរបស់គាត់ជាន់ពួកអ្នក ខណៈដែលពួកគេមិនដឹងខ្លួន។

فَتَبَسَّمَ ضَاحِكٗا مِّن قَوۡلِهَا وَقَالَ رَبِّ
أَوۡزِعۡنِيٓ أَنۡ أَشۡكُرَ نِعۡمَتَكَ ٱلَّتِيٓ أَنۡعَمۡتَ
عَلَيَّ وَعَلَىٰ وَٰلِدَيَّ وَأَنۡ أَعۡمَلَ صَٰلِحٗا
تَرۡضَىٰهُ وَأَدۡخِلۡنِي بِرَحۡمَتِكَ فِي عِبَادِكَ
ٱلصَّٰلِحِينَ ١٩

១៩-ពេលនោះគាត់(ស៊ូឡៃម៉ាន)បានញញឹមដោយអស់សំណើចនឹងសំដីរបស់មេស្រមោច។ ហើយគាត់បានបួងសួងសុំថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាចង្អុលបង្ហាញខ្ញុំ ដើម្បីឱ្យខ្ញុំអរគុណចំពោះនៀកម៉ាត់របស់ទ្រង់ដែលបានប្រទានឱ្យខ្ញុំ និងមាតាបិតារបស់ខ្ញុំ និងដើម្បីឱ្យខ្ញុំសាងអំពើល្អដែលទ្រង់គាប់ចិត្ត ហើយសូមទ្រង់មេត្តាបញ្ចូលខ្ញុំទៅក្នុងចំណោមបណ្ដាខ្ញុំរបស់ទ្រង់ដែលល្អត្រឹមត្រូវដោយក្ដីមេត្តាករុណារបស់ទ្រង់ផងចុះ។

وَتَفَقَّدَ ٱلطَّيۡرَ فَقَالَ مَا لِيَ لَآ أَرَى
ٱلۡهُدۡهُدَ أَمۡ كَانَ مِنَ ٱلۡغَآئِبِينَ ٢٠

២០-ហើយគាត់(ស៊ូឡៃម៉ាន)បានពិនិត្យស្ថានភាពនៃហ្វូងសត្វស្លាបរួចក៏ពោលថា: ហេតុអ្វីបានជាខ្ញុំមិនឃើញសត្វហ៊ុទហ៊ុទ ឬមួយក៏វាអវត្តមាន?

لَأُعَذِّبَنَّهُۥ عَذَابٗا شَدِيدًا أَوۡ لَأَاْذۡبَحَنَّهُۥٓ أَوۡ

២១-ខ្ញុំពិតជានឹងធ្វើទារុណកម្មវាយ៉ាងធ្ងន់ធ្ងរ ឬក៏ខ្ញុំសំឡេះវា

ចោល ឬមួយវាត្រូវនាំហេតុផលណាមួយដ៏ច្បាស់លាស់មកឱ្យខ្ញុំ។

لَيَأۡتِيَنِّي بِسُلۡطَٰنٖ مُّبِينٖ ﴿٢١﴾

២២-តែមិនយូរប៉ុន្មានវាក៏បានមកដល់ ហើយបាននិយាយថាៈ ខ្ញុំបានដឹងនូវអ្វីដែលអ្នកមិនបានដឹងវា ហើយខ្ញុំបាននាំមកឱ្យអ្នកនូវដំណឹងមួយយ៉ាងជាក់លាក់ពីទីក្រុងសាបាក។

فَمَكَثَ غَيۡرَ بَعِيدٖ فَقَالَ أَحَطتُ بِمَا لَمۡ تُحِطۡ بِهِۦ وَجِئۡتُكَ مِن سَبَإِۭ بِنَبَإٖ يَقِينٍ ﴿٢٢﴾

២៣-ពិតប្រាកដណាស់ ខ្ញុំបានជួបស្ត្រីម្នាក់ដែលជាស្ដេចគ្រប់គ្រងពួកគេ(ប្រជាជនសាបាក) ហើយនាងត្រូវបានគេផ្ដល់ឱ្យនូវអ្វីៗគ្រប់បែបយ៉ាង ព្រមទាំងនាងមានរាជបល្ល័ង្គមួយដ៏អស្ចារ្យផងដែរ។

إِنِّي وَجَدتُّ ٱمۡرَأَةٗ تَمۡلِكُهُمۡ وَأُوتِيَتۡ مِن كُلِّ شَيۡءٖ وَلَهَا عَرۡشٌ عَظِيمٞ ﴿٢٣﴾

២៤-ហើយខ្ញុំបានឃើញនាងនិងប្រជាជនរបស់នាង ពួកគេក្រាបថ្វាយបង្គំព្រះអាទិត្យផ្សេងពីអល់ឡោះ ហើយស្ហៃតនបានលំអពួកគេនូវទង្វើទាំងឡាយរបស់ពួកគេ ហើយវាបានរារាំងពួកគេពីមាគ៌ាដ៏ត្រឹមត្រូវ ដូច្នេះពួកគេមិនទទួលបានការចង្អុលបង្ហាញឡើយ។

وَجَدتُّهَا وَقَوۡمَهَا يَسۡجُدُونَ لِلشَّمۡسِ مِن دُونِ ٱللَّهِ وَزَيَّنَ لَهُمُ ٱلشَّيۡطَٰنُ أَعۡمَٰلَهُمۡ فَصَدَّهُمۡ عَنِ ٱلسَّبِيلِ فَهُمۡ لَا يَهۡتَدُونَ ﴿٢٤﴾

២៥-(ស្ហៃតនធ្វើដូច្នេះ)ដើម្បីកុំឱ្យពួកគេគោរពសក្ការៈចំពោះអល់ឡោះដែលជាអ្នកលាតត្រដាងនូវអ្វីដែលលាក់ទុកលើមេឃជាច្រើនជាន់ និងផែនដី(អំពីទឹកភ្លៀង រុក្ខជាតិ និងអ្វីផ្សេងៗទៀត) ហើយទ្រង់ដឹងនូវអ្វីដែលពួកអ្នកលាក់បាំង និងអ្វីដែលពួកអ្នកលាតត្រដាង។

أَلَّا يَسۡجُدُواْۤ لِلَّهِ ٱلَّذِي يُخۡرِجُ ٱلۡخَبۡءَ فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَيَعۡلَمُ مَا تُخۡفُونَ وَمَا تُعۡلِنُونَ ﴿٢٥﴾

២៦-អល់ឡោះគឺជាម្ចាស់ ដែលគ្មានម្ចាស់ណាផ្សេងត្រូវគេគោរពសក្ការៈពិតប្រាកដក្រៅពីទ្រង់ ដែលជាម្ចាស់នៃអារ៉ស្ហដ៏ធំស្កឹមស្កៃឡើយ។

ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ رَبُّ ٱلۡعَرۡشِ ٱلۡعَظِيمِ۩ ﴿٢٦﴾

២៧-គាត់(ស៊ូឡៃម៉ាន)បានតបវិញថាៈ យើងនឹងចាំមើលថាតើឯងបាននិយាយពិត ឬក៏និយាយកុហក?

۞قَالَ سَنَنظُرُ أَصَدَقۡتَ أَمۡ كُنتَ مِنَ ٱلۡكَٰذِبِينَ ﴿٢٧﴾

២៨-ចូរឯងនាំសាររបស់ខ្ញុំនេះ ហើយទម្លាក់ឱ្យពួកគេ បន្ទាប់មកចូរឯងទៅឱ្យឆ្ងាយពីពួកគេបន្តិច រួចឯងត្រូវចាំមើល តើ(ចម្លើយ)អ្វីដែលពួកគេនឹងឆ្លើយតបមកវិញ?

ٱذۡهَب بِّكِتَٰبِي هَٰذَا فَأَلۡقِهۡ إِلَيۡهِمۡ ثُمَّ تَوَلَّ عَنۡهُمۡ فَٱنظُرۡ مَاذَا يَرۡجِعُونَ ﴿٢٨﴾

២៩-នាងបាននិយាយថាៈ ឱមន្ត្រីទាំងឡាយ! ពិតប្រាកដណាស់គេបានប្រគល់សារដ៏វិសេសមួយដល់ខ្ញុំ។

قَالَتۡ يَٰٓأَيُّهَا ٱلۡمَلَؤُاْ إِنِّيٓ أُلۡقِيَ إِلَيَّ كِتَٰبٞ كَرِيمٌ ﴿٢٩﴾

إِنَّهُۥ مِن سُلَيۡمَٰنَ وَإِنَّهُۥ بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ
ٱلرَّحِيمِ ﴿٣٠﴾

៣០-ពិតប្រាកដណាស់ សារនោះមកពីស៊ូឡៃម៉ាន ហើយពិត
ប្រាកដណាស់វានោះគឺ "بِسْمِ اللهِ الرَّحْمَنِ الرَّحِيْمِ" (ក្នុងនាម
អល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់) ។

أَلَّا تَعۡلُواْ عَلَيَّ وَأۡتُونِي مُسۡلِمِينَ ﴿٣١﴾

៣១-ចូរពួកអ្នកកុំក្រអឺតក្រទមចំពោះខ្ញុំ(ស៊ូឡៃម៉ាន) ហើយ
ចូរពួកអ្នកមកប្រគល់ខ្លួនឱ្យខ្ញុំ ។

قَالَتۡ يَٰٓأَيُّهَا ٱلۡمَلَؤُاْ أَفۡتُونِي فِيٓ أَمۡرِي مَا
كُنتُ قَاطِعَةً أَمۡرًا حَتَّىٰ تَشۡهَدُونِ ﴿٣٢﴾

៣២-នាងបាននិយាយថា: ឱពួកមន្ត្រីទាំងឡាយ! ចូរពួកអ្នក
ផ្តល់យោបល់ឱ្យខ្ញុំនៅក្នុងរឿងរបស់ខ្ញុំ ខ្ញុំមិនបានសម្រេចកិច្ចការ
ណាមួយឡើយ លុះត្រាតែពួកអ្នកមានវត្តមានជាមួយខ្ញុំ ។

قَالُواْ نَحۡنُ أُوْلُواْ قُوَّةٖ وَأُوْلُواْ بَأۡسٖ شَدِيدٖ
وَٱلۡأَمۡرُ إِلَيۡكِ فَٱنظُرِي مَاذَا تَأۡمُرِينَ ﴿٣٣﴾

៣៣-ពួកគេបានឆ្លើយថា: ពួកយើងសុទ្ធសឹងជាអ្នកខ្លាំងពូកែ
និងជាអ្នកដែលក្លាហានបំផុត(ក្នុងការធ្វើសង្គ្រាម) ។ ហើយរឿង
នេះប្រគល់ឱ្យម្ចាស់ក្សត្រី(ជាអ្នកសម្រេច) ដូច្នេះសូមម្ចាស់ក្សត្រី
ពិចារណាមើលចុះ តើត្រូវសម្រេចធ្វើយ៉ាងណា?

قَالَتۡ إِنَّ ٱلۡمُلُوكَ إِذَا دَخَلُواْ قَرۡيَةً أَفۡسَدُوهَا
وَجَعَلُوٓاْ أَعِزَّةَ أَهۡلِهَآ أَذِلَّةٗۚ وَكَذَٰلِكَ
يَفۡعَلُونَ ﴿٣٤﴾

៣៤-នាងបានឆ្លើយថា: ពិតប្រាកដណាស់ក្សត្រទាំងឡាយ កាល
បើពួកគេបានចូលទៅក្នុងភូមិស្រុកណាមួយនោះ ពួកគេច្បាស់ជា
បំផ្លាញវា និងធ្វើឱ្យអ្នកដែលមានកិត្តិយសក្នុងភូមិស្រុកនោះក្លាយ
ជាជនទាបថោកជាមិនខាន ។ ហើយពួកគេតែងតែធ្វើដូច្នោះ ។

وَإِنِّي مُرۡسِلَةٌ إِلَيۡهِم بِهَدِيَّةٖ فَنَاظِرَةُۢ بِمَ يَرۡجِعُ
ٱلۡمُرۡسَلُونَ ﴿٣٥﴾

៣៥-ប៉ុន្តែខ្ញុំពិតជានឹងបញ្ជូនជំនូនមួយទៅថ្វាយពួកគេ ហើយ
រង់ចាំមើល ថាតើអ្នកនាំសារទាំងនោះនាំអ្វីខ្លះត្រឡប់មកវិញ?

فَلَمَّا جَآءَ سُلَيۡمَٰنَ قَالَ أَتُمِدُّونَنِ بِمَالٖ فَمَآ
ءَاتَىٰنِۦَ ٱللَّهُ خَيۡرٞ مِّمَّآ ءَاتَىٰكُمۚ بَلۡ أَنتُم
بِهَدِيَّتِكُمۡ تَفۡرَحُونَ ﴿٣٦﴾

៣៦-ហើយនៅពេលដែលអ្នកនាំសារបានទៅជួបស៊ូឡៃម៉ាន
(ជាមួយនឹងជំនូនទាំងនេះ) គាត់បានពោលថា: តើពួកអ្នកផ្តល់
ទ្រព្យសម្បត្តិទាំងនេះឱ្យខ្ញុំឬ? តែអ្វីដែលអល់ឡោះបានប្រទានឱ្យ
ខ្ញុំគឺប្រសើរជាងអ្វីដែលទ្រង់បានប្រទានឱ្យពួកអ្នកទៅទៀត ។ ផ្ទុយ
ទៅវិញពួកអ្នកទេដែលសប្បាយរីករាយនឹងជំនូនដែលគេផ្តល់ឱ្យ
ពួកអ្នកនោះ ។

ٱرۡجِعۡ إِلَيۡهِمۡ فَلَنَأۡتِيَنَّهُم بِجُنُودٖ لَّا قِبَلَ
لَهُم بِهَا وَلَنُخۡرِجَنَّهُم مِّنۡهَآ أَذِلَّةٗ وَهُمۡ

៣៧-ចូរអ្នកត្រឡប់ទៅប្រាប់ពួកគេវិញចុះ យើងពិតជានឹងដឹក
នាំកងទ័ពឆ្ពោះទៅកាន់ពួកគេ ដែលពួកគេមិនអាចទប់ទល់នឹង
កងទ័ពទាំងនេះបានឡើយ ។ ហើយយើងពិតជានឹងបណ្តេញពួកគេ

صَٰغِرُونَ ٣٧

ចេញពីទីនោះ( ទឹកដីសាបាក) យ៉ាងអាម៉ាស់ ហើយពួកគេជាពួក ដែលទាបថោកបំផុត ។

قَالَ يَٰٓأَيُّهَا ٱلۡمَلَؤُاْ أَيُّكُمۡ يَأۡتِينِي بِعَرۡشِهَا قَبۡلَ
أَن يَأۡتُونِي مُسۡلِمِينَ ٣٨

៣៨-គាត់( ស៊ូឡៃម៉ាន) បានពោលថាៈ ឱមន្ត្រីទាំងឡាយ! តើអ្នកណាក្នុងចំណោមពួកអ្នកអាចនាំរាជបល្ល័ង្គរបស់នាងមកឱ្យខ្ញុំ មុននឹងពួកនាងមកប្រគល់ខ្លួនឱ្យខ្ញុំ( ចូលសាសនាអ៊ីស្លាម) ?

قَالَ عِفۡرِيتٞ مِّنَ ٱلۡجِنِّ أَنَا۠ ءَاتِيكَ بِهِۦ
قَبۡلَ أَن تَقُومَ مِن مَّقَامِكَۖ وَإِنِّي عَلَيۡهِ لَقَوِيٌّ
أَمِينٞ ٣٩

៣៩-អ៊ីហ្វ្រីតជាជិន( ដ៏ខ្លាំង) បាននិយាយថាៈ ខ្ញុំអាចនាំរាជបល្ល័ង្គនោះមកឱ្យអ្នកមុននឹងអ្នកក្រោកចេញពីកន្លែងរបស់អ្នក ។ ហើយប្រាកដណាស់ ខ្ញុំគឺជាអ្នកខ្លាំងពូកែស្មោះត្រង់បំផុតលើការងារនេះ ។

قَالَ ٱلَّذِي عِندَهُۥ عِلۡمٞ مِّنَ ٱلۡكِتَٰبِ أَنَا۠
ءَاتِيكَ بِهِۦ قَبۡلَ أَن يَرۡتَدَّ إِلَيۡكَ طَرۡفُكَۚ
فَلَمَّا رَءَاهُ مُسۡتَقِرًّا عِندَهُۥ قَالَ هَٰذَا مِن
فَضۡلِ رَبِّي لِيَبۡلُوَنِيٓ ءَأَشۡكُرُ أَمۡ أَكۡفُرُۖ وَمَن
شَكَرَ فَإِنَّمَا يَشۡكُرُ لِنَفۡسِهِۦۖ وَمَن كَفَرَ فَإِنَّ
رَبِّي غَنِيّٞ كَرِيمٞ ٤٠

៤០-អ្នកដែលមានចំណេះដឹងជ្រៅជ្រះខាងគម្ពីរបាននិយាយថាៈ ខ្ញុំនឹងនាំរាជបល្ល័ង្គនោះមកឱ្យអ្នកមុននឹងការសម្លឹងរបស់អ្នកត្រឡប់មកវិញ( ក្នុងមួយប៉ប្រិចភ្នែក) ។ ហើយនៅពេលដែលស៊ូឡៃម៉ានបានឃើញរាជបល្ល័ង្គនោះស្ថិតនៅចំពោះមុខរបស់គាត់ គាត់ក៏បានពោលថាៈ នេះគឺជាការប្រោសប្រទានពីម្ចាស់របស់ខ្ញុំ ដើម្បីនឹងសាកល្បងខ្ញុំ តើខ្ញុំដឹងគុណឬរមិលគុណ? ហើយអ្នកណាបានដឹងគុណ ( ចំពោះអល់ឡោះ) គឺពិតប្រាកដណាស់ គេដឹងគុណចំពោះខ្លួនឯង ។ តែអ្នកណាហើយរមិលគុណវិញនោះ ពិតប្រាកដណាស់ម្ចាស់របស់ខ្ញុំមហាមានលើសលប់ មហាសប្បុរស ។

قَالَ نَكِّرُواْ لَهَا عَرۡشَهَا نَنظُرۡ أَتَهۡتَدِيٓ أَمۡ
تَكُونُ مِنَ ٱلَّذِينَ لَا يَهۡتَدُونَ ٤١

៤១-គាត់( ស៊ូឡៃម៉ាន) បានពោលថាៈ ចូរពួកអ្នកប្តូររូបរាងបល្ល័ង្គរបស់នាង យើងនឹងចាំមើល ថាតើនាងបានទទួលការចង្អុលបង្ហាញ( ឱ្យស្គាល់) ឬក៏នាងស្ថិតក្នុងចំណោមអ្នកដែលមិនទទួលការចង្អុលបង្ហាញ?

فَلَمَّا جَآءَتۡ قِيلَ أَهَٰكَذَا عَرۡشُكِۖ قَالَتۡ
كَأَنَّهُۥ هُوَۚ وَأُوتِينَا ٱلۡعِلۡمَ مِن قَبۡلِهَا وَكُنَّا
مُسۡلِمِينَ ٤٢

៤២-ហើយនៅពេលដែលនាងបានមកដល់ មានគេសួរថាៈ នេះជាបល្ល័ង្គរបស់អ្នកឬ? នាងបានឆ្លើយថាៈ ដូចជាវាមែន ។ ( ស៊ូឡៃម៉ានបានពោលថា) យើងត្រូវបានគេប្រទានឱ្យនូវចំណេះដឹងមុននាង ហើយពួកយើងជាអ្នកប្រគល់ខ្លួន( ចូលអ៊ីស្លាមមុននាង) ។

وَصَدَّهَا مَا كَانَت تَّعۡبُدُ مِن دُونِ ٱللَّهِۖ إِنَّهَا

៤៣-ហើយអ្វីៗដែលនាងធ្លាប់បានគោរពសក្ការៈផ្សេងពីអល់ឡោះនោះ បានរាំងនាង( មិនឱ្យចូលសាសនាអ៊ីស្លាម) ។

كَانَتۡ مِن قَوۡمٖ كَٰفِرِينَ ﴿٤٣﴾

ពិតប្រាកដណាស់ នាងជាស្ត្រីម្នាក់ដែលធ្លាប់ស្ថិតក្នុងចំណោមក្រុមដែលគ្មានជំនឿ ។

قِيلَ لَهَا ٱدۡخُلِي ٱلصَّرۡحَۖ فَلَمَّا رَأَتۡهُ حَسِبَتۡهُ
لُجَّةٗ وَكَشَفَتۡ عَن سَاقَيۡهَاۚ قَالَ إِنَّهُۥ صَرۡحٞ
مُّمَرَّدٞ مِّن قَوَارِيرَۗ قَالَتۡ رَبِّ إِنِّي ظَلَمۡتُ
نَفۡسِي وَأَسۡلَمۡتُ مَعَ سُلَيۡمَٰنَ لِلَّهِ رَبِّ
ٱلۡعَٰلَمِينَ ﴿٤٤﴾

៤៤-មានគេនិយាយទៅកាន់នាងថា: សូមនាងអញ្ជើញចូលទៅក្នុងវិមាននេះទៅ[1] ។ ហើយនៅពេលដែលនាងបានឃើញវា នាងស្មានថាវាជាស្រះទឹកមួយ ហើយក៏បានសើយសំពត់ឡើងពីស្មងជើងទាំងពីររបស់នាង ។ គាត់(ស៊ូឡៃម៉ាន) បានប្រាប់នាងថា: ពិតប្រាកដណាស់ វាជាវិមានមួយដែលគេបានក្រាលអំពីកញ្ចក់ ។ (ពេលនោះនាងក៏បានដឹងអំពីអំណាចគ្រប់គ្រងរបស់ស៊ូឡៃម៉ាន) ហើយនាងបានបួងសួងសុំថា: ឱម្ចាស់(អល់ឡោះ) របស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំបានធ្វើខុសដោយខ្លួនឯង ហើយខ្ញុំព្រមចូលសាសនាអ៊ីស្លាមតាមស៊ូឡៃម៉ាន ដើម្បីគោរពសក្ការៈចំពោះអល់ឡោះដែលជាម្ចាស់គ្រប់គ្រងពិភពទាំងអស់ ។

وَلَقَدۡ أَرۡسَلۡنَآ إِلَىٰ ثَمُودَ أَخَاهُمۡ صَٰلِحًا
أَنِ ٱعۡبُدُواْ ٱللَّهَ فَإِذَا هُمۡ فَرِيقَانِ
يَخۡتَصِمُونَ ﴿٤٥﴾

៤៥-ហើយយើងបានបញ្ជូនសឡេះទៅកាន់ក្រុមសាមូដដែលជាបងប្អូនរបស់ពួកគេ(ដោយគេបានពោលថា) ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ ។ ហើយពេលនោះស្រាប់តែពួកគេបានបែកជាពីរក្រុម(ក្រុមមានជំនឿ និងគ្មានជំនឿ) ឈ្លោះប្រកែកគ្នាទៅវិញ ។

قَالَ يَٰقَوۡمِ لِمَ تَسۡتَعۡجِلُونَ بِٱلسَّيِّئَةِ قَبۡلَ
ٱلۡحَسَنَةِۖ لَوۡلَا تَسۡتَغۡفِرُونَ ٱللَّهَ لَعَلَّكُمۡ
تُرۡحَمُونَ ﴿٤٦﴾

៤៦-គេ(សឡេះ) បានពោលថា: ឱក្រុមរបស់ខ្ញុំ(ក្រុមគ្មានជំនឿ)! ហេតុអ្វីបានជាពួកអ្នកប្រញាប់សុំអំពើអាក្រក់(ទារុណកម្ម) មុនអំពើល្អដូច្នេះ? ហេតុអ្វីបានជាពួកអ្នកមិនសុំអភ័យទោសពីអល់ឡោះដើម្បីឱ្យទ្រង់ផ្តល់ក្តីមេត្តាករុណាដល់ពួកអ្នក?

قَالُواْ ٱطَّيَّرۡنَا بِكَ وَبِمَن مَّعَكَۚ قَالَ طَٰٓئِرُكُمۡ
عِندَ ٱللَّهِۖ بَلۡ أَنتُمۡ قَوۡمٞ تُفۡتَنُونَ ﴿٤٧﴾

៤៧-ពួកគេបានតបថា: យើងមានប្រផ្នូលអាក្រក់ ដោយសារតែអ្នក និងជនដែលតាមអ្នកនេះហើយ ។ គេ(សឡេះ) បានតបវិញថា: ប្រផ្នូលអាក្រក់របស់ពួកអ្នកគឺស្ថិតនៅលើអល់ឡោះ ។ ផ្ទុយទៅវិញពួកអ្នកទេជាក្រុមដែលត្រូវគេសាកល្បងនោះ ។

وَكَانَ فِي ٱلۡمَدِينَةِ تِسۡعَةُ رَهۡطٖ
يُفۡسِدُونَ فِي ٱلۡأَرۡضِ وَلَا

៤៨-ហើយមានបុរសប្រាំបួននាក់នៅក្នុងទីក្រុង(ហ៊ិជរី) ពួកគេតែងតែបង្កវិនាសកម្មនៅលើផែនដី និងមិនកែខ្លួនឡើយ ។

១-កន្លែងមួយដែលគេរៀបចំជាអាងទឹក ហើយក្រាលកញ្ចក់នៅពីលើដែលមើលទៅដូចជាមានស្រះទឹក ។

يُصۡلِحُونَ ﴿٤٨﴾
قَالُواْ تَقَاسَمُواْ بِٱللَّهِ لَنُبَيِّتَنَّهُۥ وَأَهۡلَهُۥ ثُمَّ
لَنَقُولَنَّ لِوَلِيِّهِۦ مَا شَهِدۡنَا مَهۡلِكَ أَهۡلِهِۦ وَإِنَّا
لَصَٰدِقُونَ ﴿٤٩﴾
وَمَكَرُواْ مَكۡرٗا وَمَكَرۡنَا مَكۡرٗا وَهُمۡ لَا
يَشۡعُرُونَ ﴿٥٠﴾
فَٱنظُرۡ كَيۡفَ كَانَ عَٰقِبَةُ مَكۡرِهِمۡ أَنَّا
دَمَّرۡنَٰهُمۡ وَقَوۡمَهُمۡ أَجۡمَعِينَ ﴿٥١﴾
فَتِلۡكَ بُيُوتُهُمۡ خَاوِيَةَۢ بِمَا ظَلَمُوٓاْۚ إِنَّ فِي
ذَٰلِكَ لَأٓيَةٗ لِّقَوۡمٖ يَعۡلَمُونَ ﴿٥٢﴾
وَأَنجَيۡنَا ٱلَّذِينَ ءَامَنُواْ وَكَانُواْ
يَتَّقُونَ ﴿٥٣﴾
وَلُوطًا إِذۡ قَالَ لِقَوۡمِهِۦٓ أَتَأۡتُونَ ٱلۡفَٰحِشَةَ
وَأَنتُمۡ تُبۡصِرُونَ ﴿٥٤﴾
أَئِنَّكُمۡ لَتَأۡتُونَ ٱلرِّجَالَ شَهۡوَةٗ مِّن دُونِ
ٱلنِّسَآءِۚ بَلۡ أَنتُمۡ قَوۡمٞ تَجۡهَلُونَ ﴿٥٥﴾
۞ فَمَا كَانَ جَوَابَ قَوۡمِهِۦٓ إِلَّآ أَن قَالُوٓاْ
أَخۡرِجُوٓاْ ءَالَ لُوطٖ مِّن قَرۡيَتِكُمۡۖ إِنَّهُمۡ أُنَاسٞ
يَتَطَهَّرُونَ ﴿٥٦﴾

៤៩-ពួកគេបាននិយាយគ្នាថាៈ ចូរពួកអ្នកស្បថនឹងអល់ឡោះថា យើងពិតជានឹងសម្លាប់គេ(សទ្បេះ) និងក្រុមគ្រួសាររបស់គេ(នៅយប់នេះ)។ បន្ទាប់មក យើងនឹងប្រាប់សាច់ញាតិរបស់គេថាៈ ពួកយើងមិនបានឃើញការស្លាប់នៃក្រុមគ្រួសាររបស់គេឡើយ ហើយពិតប្រាកដណាស់ ពួកយើងជាពួកដែលនិយាយពិត។

៥០-ហើយពួកគេបានរៀបចំល្បិចកល(ដើម្បីសម្លាប់សទ្បេះ)។ តែយើង(អល់ឡោះ)ក៏បានរៀបចំល្បិចកលទប់ទល់នឹងពួកគេវិញដែរ ដោយពួកគេមិនបានដឹងខ្លួនឡើយ។

៥១-ដូច្នេះ ចូរអ្នកពិចារណាមើលចុះ តើលទ្ធផលចុងក្រោយនៃឧបាយកលរបស់ពួកគេទៅជាយ៉ាងណា? ពិតប្រាកដណាស់ យើងបានបំផ្លាញពួកគេ និងក្រុមរបស់ពួកគេឱ្យវិនាសទាំងអស់។

៥២-ហើយលំនៅដ្ឋានរបស់ពួកគេទាំងនោះបាក់ខ្ទេចខ្ទី(ស្ងាត់ជ្រងំ)ដោយសារតែពួកគេបានបំពាន។ ពិតប្រាកដណាស់ នៅក្នុងរឿងនេះគឺជាមេរៀនមួយសម្រាប់ក្រុមអ្នកដែលចេះដឹង។

៥៣-ហើយយើងបានសង្គ្រោះបណ្ដាអ្នកដែលមានជំនឿដែលពួកគេធ្លាប់បានកោតខ្លាចចំពោះយើង។

៥៤-ហើយ(ចូរចងចាំ)នៅពេលដែលលូតបានពោលទៅកាន់ក្រុមរបស់គាត់ថាៈ តើហេតុអ្វីបានជាពួកអ្នកប្រព្រឹត្តអំពើអសីលធម៌ ខណៈដែលពួកអ្នកឃើញច្បាស់(ថាវាជាប្រការអាក្រក់)នោះ?

៥៥-តើពួកអ្នកពិតជាយកបុរសមកបំពេញចំណង់តណ្ហាក្រៅពីស្ត្រីមែនឬ? ផ្ទុយទៅវិញ ពួកអ្នកពិតជាក្រុមដែលល្ងង់ខ្លៅ។

៥៦-ហើយការឆ្លើយតបនៃក្រុមរបស់គេ(លូត)គ្មានអ្វីក្រៅពីពួកគេនិយាយគ្នាថាៈ ចូរពួកអ្នកបណ្ដេញក្រុមគ្រួសាររបស់លូតចេញពីភូមិរបស់ពួកអ្នកចុះ។ ពិតប្រាកដណាស់ ពួកគេជាមនុស្សដែល

ស្អាតស្អំ( មិនរួមរ័កជាមួយបុរស) ។

فَأَنجَيۡنَـٰهُ وَأَهۡلَهُۥٓ إِلَّا ٱمۡرَأَتَهُۥ قَدَّرۡنَـٰهَا مِنَ ٱلۡغَـٰبِرِينَ ﴿٥٧﴾

៥៧-បន្ទាប់មក យើងបានសង្គ្រោះគេ( លូត) និងពួកដែលតាមគេ លើកលែងតែភរិយារបស់គេប៉ុណ្ណោះដែលយើងបានកំណត់ឱ្យគេស្ថិតនៅក្នុងចំណោមពួកដែលទទួលរងទារុណកម្ម ។

وَأَمۡطَرۡنَا عَلَيۡهِم مَّطَرٗاۖ فَسَآءَ مَطَرُ ٱلۡمُنذَرِينَ ﴿٥٨﴾

៥៨-ហើយយើងបានបញ្ចុះភ្លៀង( ថ្ម) ទៅលើពួកគេ ។ ហើយភ្លៀងដែលបានធ្លាក់លើពួកដែលត្រូវបានគេព្រមាននោះអាក្រក់បំផុត ។

قُلِ ٱلۡحَمۡدُ لِلَّهِ وَسَلَـٰمٌ عَلَىٰ عِبَادِهِ ٱلَّذِينَ ٱصۡطَفَىٰٓۗ ءَآللَّهُ خَيۡرٌ أَمَّا يُشۡرِكُونَ ﴿٥٩﴾

៥៩-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ រាល់ការសរសើរគឺចំពោះអល់ឡោះ ហើយសូមឱ្យមានសុខសន្តិភាពចំពោះបណ្តាខ្ញុំរបស់ទ្រង់ដែលទ្រង់បានជ្រើសរើស ។ តើអល់ឡោះប្រសើរជាង ឬអ្វីដែលពួកគេកំពុងធ្វើស្ទិរិកនោះប្រសើរជាង?

أَمَّنۡ خَلَقَ ٱلسَّمَـٰوَٰتِ وَٱلۡأَرۡضَ وَأَنزَلَ لَكُم مِّنَ ٱلسَّمَآءِ مَآءٗ فَأَنۢبَتۡنَا بِهِۦ حَدَآئِقَ ذَاتَ بَهۡجَةٖ مَّا كَانَ لَكُمۡ أَن تُنۢبِتُواْ شَجَرَهَآۗ أَءِلَـٰهٞ مَّعَ ٱللَّهِۚ بَلۡ هُمۡ قَوۡمٞ يَعۡدِلُونَ ﴿٦٠﴾

៦០-ឬអ្នកដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដី និងបានបញ្ចុះទឹកភ្លៀងពីលើមេឃឱ្យពួកអ្នកប្រសើរជាង? ហើយដោយសារទឹកភ្លៀងនោះ យើងបានបណ្តុះចេញជាសួនឧទ្យានជាច្រើនដែលមានភាពស្រស់បំព្រងដែលពួកអ្នកគ្មានសមត្ថភាពនឹងបណ្តុះដើមឈើទាំងនោះបានឡើយ ។ តើមានម្ចាស់ផ្សេងដែលត្រូវគោរពសក្ការៈណាមួយបានរួមគ្នាជាមួយអល់ឡោះ( ក្នុងការបង្កើតដូច្នោះ) ឬ? ផ្ទុយទៅវិញ ពួកគេគឺជាក្រុមដែល ងាកចេញពីការពិត ។

أَمَّن جَعَلَ ٱلۡأَرۡضَ قَرَارٗا وَجَعَلَ خِلَـٰلَهَآ أَنۡهَـٰرٗا وَجَعَلَ لَهَا رَوَٰسِيَ وَجَعَلَ بَيۡنَ ٱلۡبَحۡرَيۡنِ حَاجِزًاۗ أَءِلَـٰهٞ مَّعَ ٱللَّهِۚ بَلۡ أَكۡثَرُهُمۡ لَا يَعۡلَمُونَ ﴿٦١﴾

៦១-ឬមួយអ្នកដែលបានធ្វើឱ្យផែនដីមានលំនឹង និងបានបង្កើតឱ្យមានទន្លេជាច្រើននៅតាមចន្លោះរបស់វា ហើយនិងបានបង្កើតឱ្យមានភ្នំជាច្រើនដើម្បីទប់ស្កាត់ការរញ្ជួយ ព្រមទាំងធ្វើឱ្យមានរនាំងបាំងរវាងសមុទ្រពីរ( ទឹកប្រៃ និងទឹកសាប) ប្រសើរជាង? តើមានម្ចាស់ផ្សេងដែលត្រូវគោរពសក្ការៈណាមួយបានរួមគ្នាជាមួយអល់ឡោះ( ក្នុងការបង្កើតដូច្នោះ) ឬ?? ផ្ទុយទៅវិញពួកគេភាគច្រើនគឺមិនដឹងឡើយ ។

أَمَّن يُجِيبُ ٱلۡمُضۡطَرَّ إِذَا دَعَاهُ وَيَكۡشِفُ ٱلسُّوٓءَ وَيَجۡعَلُكُمۡ خُلَفَآءَ ٱلۡأَرۡضِۗ أَءِلَـٰهٞ

៦២-ឬមួយអ្នកដែលឆ្លើយតបចំពោះអ្នកដែលមានទុក្ខព្រួយនៅពេលដែលគេបួងសួងសុំពីទ្រង់ និងជាអ្នកដែលបំបាត់គ្រោះអាសន្ន ព្រមទាំងបង្កើតពួកអ្នកជាអ្នកគ្រប់គ្រងផែនដីប្រសើរជាង? តើមាន

مَّعَ ٱللَّهِۚ قَلِيلٗا مَّا تَذَكَّرُونَ ٦٢

ម្ចាស់ផ្សេងដែលត្រូវគោរព សក្ការៈណាមួយបានរួមគ្នាជាមួយអល់ឡោះ( ក្នុងការបង្កើតដូច្នោះ)ឬ? តិចតួច បំផុតដែលពួកអ្នកនឹកឃើញ។

أَمَّن يَهۡدِيكُمۡ فِي ظُلُمَٰتِ ٱلۡبَرِّ وَٱلۡبَحۡرِ
وَمَن يُرۡسِلُ ٱلرِّيَٰحَ بُشۡرَۢا بَيۡنَ يَدَيۡ
رَحۡمَتِهِۦٓۗ أَءِلَٰهٞ مَّعَ ٱللَّهِۚ تَعَٰلَى ٱللَّهُ عَمَّا
يُشۡرِكُونَ ٦٣

៦៣-ឬអ្នកដែលបានចង្អុលបង្ហាញពួកអ្នកនៅក្នុងភាពងងឹតទាំងនៅលើគោក និងលើផ្ទៃសមុទ្រប្រសើរជាង? ហើយអ្នកណាដែលបញ្ជូនខ្យល់ជាដំណឹងល្អមួយមុននឹងក្តីមេត្តាករុណារបស់ទ្រង់( ទឹកភ្លៀង) មកដល ។តើមានម្ចាស់ផ្សេងដែលត្រូវគោរព សក្ការៈណាមួយបានរួមគ្នាជាមួយអល់ឡោះ( ក្នុងការធ្វើដូច្នោះ)ឬ? អល់ឡោះមហាខ្ពង់ខ្ពស់ជាងអ្វីដែលពួកគេធ្វើ ស្ទីរិក ។

أَمَّن يَبۡدَؤُاْ ٱلۡخَلۡقَ ثُمَّ يُعِيدُهُۥ وَمَن يَرۡزُقُكُم
مِّنَ ٱلسَّمَآءِ وَٱلۡأَرۡضِۗ أَءِلَٰهٞ مَّعَ ٱللَّهِۚ قُلۡ
هَاتُواْ بُرۡهَٰنَكُمۡ إِن كُنتُمۡ صَٰدِقِينَ ٦٤

៦៤-ឬអ្នកដែលផ្តល់កំណើតដល់សត្វលោក បន្ទាប់មកទ្រង់នឹងបង្កើតវាសាជាថ្មីម្តងទៀត( នៅថ្ងៃបរលោក) ប្រសើរជាង? ហើយអ្នកណាដែលប្រទានឱ្យពួកអ្នកនូវលាភសក្ការៈពីលើមេឃ និងផែនដីនោះ? តើមានម្ចាស់ផ្សេងដែលត្រូវគោរពសក្ការៈណាមួយបានរួមគ្នាជាមួយអល់ឡោះ( ក្នុងការបង្កើតដូច្នោះ)ឬ ?ចូរអ្នក( មូហាំ-ម៉ាត់) ពោលថាៈ ចូរពួកអ្នកបង្ហាញ ភស្តុតាងរបស់ពួកអ្នកមក ប្រ - សិនបើពួកអ្នកជាអ្នកដែលត្រឹមត្រូវ មែននោះ។

قُل لَّا يَعۡلَمُ مَن فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ
ٱلۡغَيۡبَ إِلَّا ٱللَّهُۚ وَمَا يَشۡعُرُونَ أَيَّانَ
يُبۡعَثُونَ ٦٥

៦៥-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ គ្មាននរណាម្នាក់ដឹងពីអាថ៌-កំបាំងនៅលើមេឃជាច្រើនជាន់ និងផែនដីឡើយ លើកលែងតែអល់ឡោះប៉ុណ្ណោះ។ ហើយពួកគេក៏មិនដឹងថា នៅពេលណាពួកគេនឹងត្រូវគេធ្វើឱ្យរស់ឡើងវិញដែរ។

بَلِ ٱدَّٰرَكَ عِلۡمُهُمۡ فِي ٱلۡأٓخِرَةِۚ بَلۡ هُمۡ فِي
شَكّٖ مِّنۡهَاۖ بَلۡ هُم مِّنۡهَا عَمُونَ ٦٦

៦៦-តែពួកគេនឹងដឹងយ៉ាងច្បាស់នៅថ្ងៃបរលោក។ ផ្ទុយទៅវិញ ពួកគេមានការសង្ស័យចំពោះវា( នៅក្នុងលោកិយ) ថែមទាំងពួកគេងងឹតមិនដឹងអ្វីសោះអំពីវាទៀតផង។

وَقَالَ ٱلَّذِينَ كَفَرُوٓاْ أَءِذَا كُنَّا تُرَٰبٗا وَءَابَآؤُنَآ
أَئِنَّا لَمُخۡرَجُونَ ٦٧

៦៧-ពួកដែលប្រឆាំងបាននិយាយថាៈ តើនៅពេលដែលពួកយើងនិងជីដូនជីតារបស់ពួកយើងបានក្លាយជាដីហើយនោះ ពួកយើងពិតជានឹងត្រូវគេធ្វើឱ្យរស់ឡើងវិញឬ?

لَقَدۡ وُعِدۡنَا هَٰذَا نَحۡنُ وَءَابَآؤُنَا مِن قَبۡلُ إِنۡ

៦៨-ជាការពិតណាស់ ពួកយើងនិងជីដូនជីតារបស់ពួកយើងត្រូវបានគេសន្យាចំពោះរឿងនេះ( ការធ្វើឱ្យរស់ឡើងវិញ) តាំងពីមុនមក

هَٰذَآ إِلَّآ أَسَٰطِيرُ ٱلۡأَوَّلِينَ ٦٨

ម្ល៉េះ ។ រឿងនេះគ្មានអ្វីក្រៅពីជារឿងព្រេងនិទានរបស់អ្នកជំនាន់មុន
នោះឡើយ ។

قُلۡ سِيرُواْ فِي ٱلۡأَرۡضِ فَٱنظُرُواْ كَيۡفَ كَانَ عَٰقِبَةُ ٱلۡمُجۡرِمِينَ ٦٩

៦៩-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចូរពួកអ្នកធ្វើដំណើរនៅ
លើផែនដីនេះ ហើយចូរពួកអ្នកមើលចុះ ថាតើលទ្ធផលចុងក្រោយ
របស់ពួកដែលប្រព្រឹត្តអំពើអាក្រក់នោះយ៉ាងដូចម្ដេច?

وَلَا تَحۡزَنۡ عَلَيۡهِمۡ وَلَا تَكُن فِي ضَيۡقٖ مِّمَّا يَمۡكُرُونَ ٧٠

៧០-ហើយចូរអ្នក(មូហាំម៉ាត់)កុំព្រួយបារម្ភចំពោះពួកគេ និង
កុំពិបាកចិត្តចំពោះអ្វីដែលពួកគេរៀបចំល្បិចកលនោះឱ្យសោះ ។

وَيَقُولُونَ مَتَىٰ هَٰذَا ٱلۡوَعۡدُ إِن كُنتُمۡ صَٰدِقِينَ ٧١

៧១-ហើយពួកគេនិយាយថាៈ តើការសន្យានេះ(ថ្ងៃបរលោក)
នៅពេលណា? ប្រសិនបើពួកអ្នកជាអ្នកត្រឹមត្រូវមែននោះ ។

قُلۡ عَسَىٰٓ أَن يَكُونَ رَدِفَ لَكُم بَعۡضُ ٱلَّذِي تَسۡتَعۡجِلُونَ ٧٢

៧២-ចូរអ្នក(មូហាំម៉ាត់)តបវិញថាៈ ជួនកាលហេតុការណ៍
(ទារុណកម្ម)ខ្លះដែលពួកអ្នកសុំឱ្យប្រញាប់មកដល់នោះបានខិត
មកជិតពួកអ្នករួចទៅហើយ ។

وَإِنَّ رَبَّكَ لَذُو فَضۡلٍ عَلَى ٱلنَّاسِ وَلَٰكِنَّ أَكۡثَرَهُمۡ لَا يَشۡكُرُونَ ٧٣

៧៣-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាម្ចាស់ដែលមាន
ការប្រោសប្រទានចំពោះមនុស្សលោក ប៉ុន្តែពួកគេភាគច្រើនមិនដឹង
គុណឡើយ ។

وَإِنَّ رَبَّكَ لَيَعۡلَمُ مَا تُكِنُّ صُدُورُهُمۡ وَمَا يُعۡلِنُونَ ٧٤

៧៤-ហើយពិតប្រាកដណាស់ ម្ចាស់របស់អ្នកដឹងនូវអ្វីដែលចិត្ត
របស់ពួកគេលាក់បាំងនិងអ្វីដែលពួកគេលាតត្រដាង ។

وَمَا مِنۡ غَآئِبَةٖ فِي ٱلسَّمَآءِ وَٱلۡأَرۡضِ إِلَّا فِي كِتَٰبٖ مُّبِينٍ ٧٥

៧៥-ហើយគ្មានទេអាថ៌កំបាំងនៅលើមេឃ និងផែនដី លើក
លែងតែមាន(ការកត់ត្រា)នៅក្នុងគម្ពីរ(ឡាវហុលម៉ះហ្វូស)យ៉ាង
ច្បាស់លាស់ ។

إِنَّ هَٰذَا ٱلۡقُرۡءَانَ يَقُصُّ عَلَىٰ بَنِيٓ إِسۡرَٰٓءِيلَ أَكۡثَرَ ٱلَّذِي هُمۡ فِيهِ يَخۡتَلِفُونَ ٧٦

៧៦-ពិតប្រាកដណាស់ គម្ពីរគួរអាននេះគឺវាបកស្រាយប្រាប់ដល់
អំបូរអ៊ីស្រាអែលនូវរឿងរ៉ាវជាច្រើនដែលពួកគេខ្វែងគំនិតគ្នាពីវា ។

وَإِنَّهُۥ لَهُدٗى وَرَحۡمَةٞ لِّلۡمُؤۡمِنِينَ ٧٧

៧៧-ហើយពិតប្រាកដណាស់វា(គម្ពីរគួរអាន)គឺជាការចង្អុល
បង្ហាញ និងជាក្ដីមេត្តាករុណាសម្រាប់បណ្ដាអ្នកដែលមានជំនឿ ។

إِنَّ رَبَّكَ يَقۡضِي بَيۡنَهُم بِحُكۡمِهِۦۚ وَهُوَ

៧៨-ពិតប្រាកដណាស់ ម្ចាស់របស់អ្នក(មូហាំម៉ាត់)នឹងកាត់

សេចក្ដីរវាងពួកគេ( អំបូរអ៊ីស្រាអែល) ដោយការវិនិច្ឆ័យរបស់ទ្រង់ ។ ហើយទ្រង់មហាខ្លាំងពូកែ មហាដឹង ។

៧៩-ដូច្នេះ ចូរអ្នកប្រគល់ការទុកចិត្តទៅចំពោះអល់ឡោះចុះ ។ ពិតប្រាកដណាស់ អ្នកស្ថិតលើភាពត្រឹមត្រូវយ៉ាងច្បាស់លាស់ ។

៨០-ពិតប្រាកដណាស់ អ្នកមិនអាចធ្វើឱ្យអ្នកស្លាប់ស្ដាប់ឮបានឡើយ ហើយអ្នកក៏មិនអាចធ្វើឱ្យអ្នកថ្លង់ស្ដាប់ឮការស្រែកហៅបានដែរ នៅពេលដែលពួកគេបែរខ្នងងាកចេញហើយនោះ ។

៨១-ហើយអ្នកក៏មិនមែនជាអ្នកចង្អុលបង្ហាញដល់អ្នកដែលងងឹតភ្នែកពីការវង្វេងរបស់ពួកគេបានដែរ ។ អ្នកមិនអាចធ្វើឱ្យអ្នកណាអាចស្ដាប់ឮក្រៅពីអ្នកដែលមានជំនឿនឹងអាយ៉ាត់ៗរបស់យើងនោះឡើយ ។ ដូច្នេះពួកគេគឺជាពួកដែលប្រគល់ខ្លួន( ទទួលយកសាសនាអ៊ិស្លាម) ។

៨២-ហើយនៅពេលដែលពាក្យសំដី( ទារុណកម្ម) ធ្លាក់លើពួកគេ យើងបានបញ្ចេញសម្រាប់ពួកគេនូវសត្វមួយដែលផុសចេញពីដី ដោយវានិយាយទៅកាន់ពួកគេថា: ពិតប្រាកដណាស់ មនុស្សលោកមិនបានជឿជាក់នឹងអាយ៉ាត់ៗរបស់យើងឡើយ ។

៨៣-ហើយ( ចូរចងចាំ) នៅថ្ងៃដែលយើងនឹងប្រមូល ដាក់មួយក្រុមអំពីអ្នកដែលបដិសេធនឹងអាយ៉ាត់ៗរបស់យើងពីគ្រប់ប្រជា-ជាតិ ។ ហើយពួកគេត្រូវគេបែងចែកជាក្រុមៗ ។

៨៤-លុះនៅពេលដែលពួកគេបានមកដល់( កន្លែងកាត់សេចក្ដី) ទ្រង់បានមានបន្ទូលថា: តើពួកអ្នកបានបដិសេធនឹងអាយ៉ាត់ៗរបស់យើងឬ ខណៈដែលពួកអ្នកមិនបានដឹងច្បាស់ពីវានោះ? ឬអ្វីខ្លះដែលពួកអ្នកបានធ្វើ?

៨៥-ហើយពាក្យសំដី( ទារុណកម្ម) ត្រូវបានធ្លាក់លើពួកគេដោយសារតែអ្វីដែលពួកគេបានបំពាន ។ ដូច្នេះពួកគេមិនអាចនិយាយដោះសាបានឡើយ ។

៨៦-តើពួកគេមិនបានឃើញទេឬ ពិតប្រាកដណាស់យើងបាន

ٱلۡعَزِيزُ ٱلۡعَلِيمُ ۝٧٨

فَتَوَكَّلۡ عَلَى ٱللَّهِۖ إِنَّكَ عَلَى ٱلۡحَقِّ
ٱلۡمُبِينِ ۝٧٩

إِنَّكَ لَا تُسۡمِعُ ٱلۡمَوۡتَىٰ وَلَا تُسۡمِعُ ٱلصُّمَّ
ٱلدُّعَآءَ إِذَا وَلَّوۡاْ مُدۡبِرِينَ ۝٨٠

وَمَآ أَنتَ بِهَٰدِي ٱلۡعُمۡيِ عَن ضَلَٰلَتِهِمۡۖ إِن
تُسۡمِعُ إِلَّا مَن يُؤۡمِنُ بِـَٔايَٰتِنَا فَهُم
مُّسۡلِمُونَ ۝٨١

۞وَإِذَا وَقَعَ ٱلۡقَوۡلُ عَلَيۡهِمۡ أَخۡرَجۡنَا لَهُمۡ دَآبَّةً
مِّنَ ٱلۡأَرۡضِ تُكَلِّمُهُمۡ أَنَّ ٱلنَّاسَ كَانُواْ
بِـَٔايَٰتِنَا لَا يُوقِنُونَ ۝٨٢

وَيَوۡمَ نَحۡشُرُ مِن كُلِّ أُمَّةٖ فَوۡجٗا مِّمَّن
يُكَذِّبُ بِـَٔايَٰتِنَا فَهُمۡ يُوزَعُونَ ۝٨٣

حَتَّىٰٓ إِذَا جَآءُو قَالَ أَكَذَّبۡتُم بِـَٔايَٰتِي وَلَمۡ
تُحِيطُواْ بِهَا عِلۡمًا أَمَّاذَا كُنتُمۡ تَعۡمَلُونَ ۝٨٤

وَوَقَعَ ٱلۡقَوۡلُ عَلَيۡهِم بِمَا ظَلَمُواْ فَهُمۡ لَا
يَنطِقُونَ ۝٨٥

أَلَمۡ يَرَوۡاْ أَنَّا جَعَلۡنَا ٱلَّيۡلَ لِيَسۡكُنُواْ فِيهِ

وَٱلنَّهَارَ مُبۡصِرًاۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ لِّقَوۡمٖ يُؤۡمِنُونَ ٨٦

បង្កើតពេលយប់ដើម្បីឱ្យពួកគេសម្រាកក្នុងវា និងពេលថ្ងៃឱ្យមានការមើលឃើញ( ដើម្បីស្វែងរកលាភសក្ការៈ)នោះ? ពិតប្រាកដណាស់ នៅក្នុងរឿងទាំងនោះគឺជាភស្តុតាង១សម្រាប់ក្រុមដែលមានជំនឿ ។

وَيَوۡمَ يُنفَخُ فِي ٱلصُّورِ فَفَزِعَ مَن فِي ٱلسَّمَٰوَٰتِ وَمَن فِي ٱلۡأَرۡضِ إِلَّا مَن شَآءَ ٱللَّهُۚ وَكُلٌّ أَتَوۡهُ دَٰخِرِينَ ٨٧

៨៧-ហើយ( ចូរចងចាំ)នៅថ្ងៃដែលគេផ្លុំត្រែ និងបានធ្វើឱ្យអ្នកដែលនៅលើមេឃជាច្រើនជាន់ និងផែនដីភ័យរន្ធត់ លើកលែងតែអ្នកណាដែលអល់ឡោះមានចេតនា( មិនឱ្យភ័យរន្ធត់)ប៉ុណ្ណោះ ។ ហើយរាល់អ្វីៗទាំងអស់នឹងមកជួបទ្រង់ដោយឱនលំទោន ។

وَتَرَى ٱلۡجِبَالَ تَحۡسَبُهَا جَامِدَةٗ وَهِيَ تَمُرُّ مَرَّ ٱلسَّحَابِۚ صُنۡعَ ٱللَّهِ ٱلَّذِيٓ أَتۡقَنَ كُلَّ شَيۡءٍۚ إِنَّهُۥ خَبِيرُۢ بِمَا تَفۡعَلُونَ ٨٨

៨៨-ហើយ( នៅថ្ងៃនោះ) អ្នកនឹងឃើញភ្នំនានាដែលអ្នកគិតថាវានៅនឹងថ្កល់មួយកន្លែង ខណៈដែលវារសាត់ ដូចជាដុំពពករសាត់ដែរ ។ (នេះ)ជាកិច្ចការរបស់អល់ឡោះដែលទ្រង់បានបង្កើតអ្វីៗគ្រប់យ៉ាងដ៏ល្អឥតខ្ចោះ ។ ពិតប្រាកដណាស់ ទ្រង់ដឹងបំផុតនូវអ្វីដែលពួកអ្នកធ្វើ ។

مَن جَآءَ بِٱلۡحَسَنَةِ فَلَهُۥ خَيۡرٞ مِّنۡهَا وَهُم مِّن فَزَعٖ يَوۡمَئِذٍ ءَامِنُونَ ٨٩

៨៩-អ្នកណាហើយបាននាំមកនូវអំពើល្អ( នៅថ្ងៃបរលោក) គឺគេនឹងទទួលបានការតបស្នងល្អប្រសើរជាងអំពើនោះទៅទៀត ។ ហើយពួកគេជាអ្នកដែលមានសុវត្ថិភាពបំផុតពីការភ័យរន្ធត់នៅថ្ងៃនោះ ។

وَمَن جَآءَ بِٱلسَّيِّئَةِ فَكُبَّتۡ وُجُوهُهُمۡ فِي ٱلنَّارِ هَلۡ تُجۡزَوۡنَ إِلَّا مَا كُنتُمۡ تَعۡمَلُونَ ٩٠

៩០-តែអ្នកណាហើយដែលបាននាំមកនូវអំពើអាក្រក់វិញនោះ ពួកគេត្រូវបានគេគ្រវែងចូលទៅក្នុងនរកដោយផ្កាប់មុខ ។ ពួកអ្នកមិនត្រូវគេតបស្នងក្រៅពីអ្វីដែលពួកអ្នកបានប្រព្រឹត្ត( នៅក្នុងលោកិយ)នោះឡើយ ។

إِنَّمَآ أُمِرۡتُ أَنۡ أَعۡبُدَ رَبَّ هَٰذِهِ ٱلۡبَلۡدَةِ ٱلَّذِي حَرَّمَهَا وَلَهُۥ كُلُّ شَيۡءٖۖ وَأُمِرۡتُ أَنۡ أَكُونَ مِنَ ٱلۡمُسۡلِمِينَ ٩١

៩១-( ឱមូហាំម៉ាត់ ចូរអ្នកពោលទៅកាន់មនុស្សលោកថា) តាមពិតខ្ញុំត្រូវបានគេបង្គាប់ឱ្យគោរពសក្ការៈចំពោះម្ចាស់របស់ទឹកដី( ម៉ាក្កះ)នេះ ដែលទ្រង់បានហាមឃាត់[១] នៅក្នុងនោះ ។ ហើយអ្វីៗទាំងអស់ជាកម្មសិទ្ធិរបស់ទ្រង់ ។ ហើយខ្ញុំត្រូវបានគេបង្គាប់ឱ្យស្ថិតនៅក្នុងចំណោមអ្នកមូស្លីម ។

---

១-នៅក្នុងទឹកដីម៉ាក្កះ អល់ឡោះបានហាមមិនឱ្យបង្ហូរឈាម បរបាញ់សត្វ និងកាប់ដើមឈើឡើយ ។

៩២-និងឱ្យខ្ញុំសូត្រគម្ពីរគួរអាន(ឱ្យមនុស្សលោកស្តាប់)។ ដូច្នេះអ្នកណាហើយដែលបានទទួលការចង្អុលបង្ហាញ គឺពិតប្រាកដណាស់គេនឹងទទួលបានការចង្អុលបង្ហាញសម្រាប់ខ្លួនគេផ្ទាល់។ តែអ្នកណាហើយដែលបានវង្វេងវិញនោះ ចូរអ្នក(មូហាំម៉ាត់)ពោលថា: តាមពិតខ្ញុំគ្រាន់តែជាអ្នកដាស់តឿនព្រមានម្នាក់ក្នុងចំណោមអ្នកដាស់តឿនទាំងឡាយប៉ុណ្ណោះ។

وَأَنْ أَتْلُوَا۟ ٱلْقُرْءَانَ ۖ فَمَنِ ٱهْتَدَىٰ فَإِنَّمَا يَهْتَدِى لِنَفْسِهِۦ ۖ وَمَن ضَلَّ فَقُلْ إِنَّمَآ أَنَا۠ مِنَ ٱلْمُنذِرِينَ ﴿٩٢﴾

៩៣-ហើយចូរអ្នកពោលថា: រាល់ការសរសើរគឺចំពោះអល់ឡោះដែលទ្រង់នឹងបង្ហាញភស្តុតាងរបស់ទ្រង់ឱ្យពួកអ្នកឃើញ។ ហើយពួកអ្នកនឹងដឹងពីវា។ ហើយម្ចាស់របស់អ្នកមិនមែនមិនដឹងពីអ្វីដែលពួកអ្នកប្រព្រឹត្តនោះឡើយ។

وَقُلِ ٱلْحَمْدُ لِلَّهِ سَيُرِيكُمْ ءَايَـٰتِهِۦ فَتَعْرِفُونَهَا ۚ وَمَا رَبُّكَ بِغَـٰفِلٍ عَمَّا تَعْمَلُونَ ﴿٩٣﴾

## ជំពូកអាល់កសស

## سورة القصص

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

១-ត ស៊ីន មីម ។

طسٓمٓ ﴿١﴾

២-ទាំងនេះគឺជាអាយ៉ាត់ៗរបស់គម្ពីរ(គួរអាន)ដ៏ច្បាស់លាស់។

تِلْكَ ءَايَـٰتُ ٱلْكِتَـٰبِ ٱلْمُبِينِ ﴿٢﴾

៣-យើងនឹងនិទានឱ្យអ្នក(មូហាំម៉ាត់)ស្តាប់នូវដំណើររឿងមួយចំនួនរបស់មូសា និងហ្វៀរអោនយ៉ាងពិតប្រាកដសម្រាប់ក្រុមដែលមានជំនឿ។

نَتْلُوا۟ عَلَيْكَ مِن نَّبَإِ مُوسَىٰ وَفِرْعَوْنَ بِٱلْحَقِّ لِقَوْمٍ يُؤْمِنُونَ ﴿٣﴾

៤-ពិតប្រាកដណាស់ ហ្វៀរអោនគឺជាអ្នកដែលក្រអឺតក្រទមនៅលើទឹកដី(អេហ្ស៊ីប)នេះ។ ហើយគេបានធ្វើឱ្យអ្នកដែលរស់នៅទីនោះបែកបាក់ជាក្រុមៗដោយគេជិះជាន់ធ្វើបាបក្រុមមួយក្នុងចំណោមពួកគេ(អំបូរអ៊ីស្រាអែល)យ៉ាងខ្លាំង ដោយគេសម្លាប់កូនប្រុសរបស់ពួកគេ ហើយទុកកូនស្រីរបស់ពួកគេ។ ពិតប្រាកដណាស់គេ(ហ្វៀរអោន)ស្ថិតនៅក្នុងចំណោមពួកដែលបង្កវិនាសកម្ម។

إِنَّ فِرْعَوْنَ عَلَا فِى ٱلْأَرْضِ وَجَعَلَ أَهْلَهَا شِيَعًا يَسْتَضْعِفُ طَآئِفَةً مِّنْهُمْ يُذَبِّحُ أَبْنَآءَهُمْ وَيَسْتَحْىِۦ نِسَآءَهُمْ ۚ إِنَّهُۥ كَانَ مِنَ ٱلْمُفْسِدِينَ ﴿٤﴾

៥-ហើយយើងចង់ប្រទាននូវនៀកម៉ាត់ដល់បណ្តាអ្នក(អំបូរអ៊ីស្រាអែល)ដែលត្រូវគេជិះជាន់នៅលើទឹកដីនេះ។ ហើយយើងធ្វើឱ្យពួកគេក្លាយជាមេដឹកនាំ និងធ្វើឱ្យពួកគេក្លាយជាអ្នកដែលទទួលមរតក(បន្ទាប់ពីហ្វៀរអោន)។

وَنُرِيدُ أَن نَّمُنَّ عَلَى ٱلَّذِينَ ٱسْتُضْعِفُوا۟ فِى ٱلْأَرْضِ وَنَجْعَلَهُمْ أَئِمَّةً وَنَجْعَلَهُمُ ٱلْوَٰرِثِينَ ﴿٥﴾

وَنُمَكِّنَ لَهُمْ فِي ٱلْأَرْضِ وَنُرِيَ فِرْعَوْنَ
وَهَٰمَٰنَ وَجُنُودَهُمَا مِنْهُم مَّا كَانُوا۟
يَحْذَرُونَ ﴿٦﴾

٦-ហើយយើងនឹងផ្ដល់អំណាចឱ្យពួកគេគ្រប់គ្រងនៅលើទឹកដី (អេហ្ស៊ីប និងស្ហាម) ហើយយើងនឹងធ្វើឱ្យហ្វៀរអោន និងហាម៉ាន ព្រមទាំងពលទាហានរបស់គេទាំងពីរឃើញនូវអ្វី (គ្រោះថ្នាក់) ដែលពួកគេតែងតែប្រុងប្រយ័ត្នពីអំបូរអ៊ីស្រាអែល។

وَأَوْحَيْنَآ إِلَىٰٓ أُمِّ مُوسَىٰٓ أَنْ أَرْضِعِيهِ ۖ فَإِذَا
خِفْتِ عَلَيْهِ فَأَلْقِيهِ فِي ٱلْيَمِّ وَلَا تَخَافِي وَلَا
تَحْزَنِيٓ ۖ إِنَّا رَآدُّوهُ إِلَيْكِ وَجَاعِلُوهُ مِنَ
ٱلْمُرْسَلِينَ ﴿٧﴾

៧-ហើយយើងបានផ្ដល់ប្រផ្នូលទៅកាន់ម្ដាយមូសាថាៈ ចូរអ្នកបំបៅគេចុះ។ តែប្រសិនបើអ្នកព្រួយបារម្ភចំពោះគេ (មូសា) ចូរអ្នកដាក់បណ្ដែតគេតាមទន្លេ (នីល) ចុះ ហើយចូរអ្នកកុំភ័យខ្លាច និងកុំព្រួយបារម្ភឱ្យសោះ។ ពិតប្រាកដណាស់ យើងនឹងត្រឡប់គេឱ្យអ្នកវិញ ហើយយើងនឹងតែងតាំងគេជាអ្នកនាំសារមួយរូបក្នុងចំណោមអ្នកនាំសារទាំងឡាយរបស់យើង។

فَٱلْتَقَطَهُۥٓ ءَالُ فِرْعَوْنَ لِيَكُونَ لَهُمْ
عَدُوًّا وَحَزَنًا ۗ إِنَّ فِرْعَوْنَ وَهَٰمَٰنَ
وَجُنُودَهُمَا كَانُوا۟ خَٰطِـِٔينَ ﴿٨﴾

៨-ពេលនោះបរិវាររបស់ហ្វៀរអោនបានរើសមូសាដែលគេនឹងអាចជាសត្រូវនិងជាកង្វល់របស់ពួកគេ។ ពិតប្រាកដណាស់ ហ្វៀរ-អោន និងហាម៉ាន និងពលទាហានរបស់គេទាំងពីរគឺជាពួកដែលធ្លាប់បានសាងអំពើបាប។

وَقَالَتِ ٱمْرَأَتُ فِرْعَوْنَ قُرَّتُ عَيْنٍ لِّي وَلَكَ ۖ
لَا تَقْتُلُوهُ عَسَىٰٓ أَن يَنفَعَنَآ أَوْ نَتَّخِذَهُۥ وَلَدًا
وَهُمْ لَا يَشْعُرُونَ ﴿٩﴾

៩-ហើយភរិយារបស់ហ្វៀរអោនបាននិយាយថាៈ (ក្មេងនេះ) គួរឱ្យស្រឡាញ់ណាស់សម្រាប់ខ្ញុំនិងអ្នក។ ចូរពួកអ្នកកុំសម្លាប់គេអ្វី សង្ឃឹមថាគេអាចនឹងមានប្រយោជន៍ចំពោះពួកយើង ឬក៏យកគេធ្វើជាកូន។ ហើយពួកគេពុំបានដឹង (ពីលទ្ធផលនេះ) ឡើយ។

وَأَصْبَحَ فُؤَادُ أُمِّ مُوسَىٰ فَٰرِغًا ۖ إِن
كَادَتْ لَتُبْدِي بِهِۦ لَوْلَآ أَن رَّبَطْنَا عَلَىٰ
قَلْبِهَا لِتَكُونَ مِنَ ٱلْمُؤْمِنِينَ ﴿١٠﴾

១០-ហើយដួងចិត្តម្ដាយរបស់មូសាវិញក្លាយទៅជាទទេស្អាត (មិនខ្វល់អ្វីក្រៅពីមូសាឡើយ)។ ពិតប្រាកដណាស់ នាងស្ទើរតែបង្ហាញប្រាប់ (អ្នកឯទៀត) អំពីរឿងមូសា (ថាជាកូនរបស់នាង) ទៅហើយ ប្រសិនបើយើង (អល់ឡោះ) មិនបានទប់អារម្មណ៍របស់នាង ដើម្បីឱ្យនាងស្ថិតនៅក្នុងចំណោមអ្នកដែលមានជំនឿទេនោះ។

وَقَالَتْ لِأُخْتِهِۦ قُصِّيهِ ۖ فَبَصُرَتْ بِهِۦ عَن
جُنُبٍ وَهُمْ لَا يَشْعُرُونَ ﴿١١﴾

១១-ហើយនាង (ម្ដាយរបស់មូសា) បាននិយាយប្រាប់បងស្រីរបស់គេថាៈ ឯងត្រូវតាមឃ្លាំមើលគេផង។ ហើយនាងបានឃើញគេពីចម្ងាយ ខណៈដែលពួកគេមិនដឹង (ថានាងជាបងស្រីរបស់មូសា)។

۞ وَحَرَّمْنَا عَلَيْهِ ٱلْمَرَاضِعَ مِن قَبْلُ فَقَالَتْ

១២-ហើយយើងបានធ្វើឱ្យមូសាបដិសេធរាល់មេដោះតាំងពីមុនមក។ ដូច្នេះនាង (បងរបស់មូសា) បាននិយាយថាៈ តើចង់ឱ្យខ្ញុំចង្អុល

هَلۡ أَدُلُّكُمۡ عَلَىٰٓ أَهۡلِ بَيۡتٖ يَكۡفُلُونَهُۥ لَكُمۡ
وَهُمۡ لَهُۥ نَٰصِحُونَ ١٢

ប្រាប់ពួកអ្នកអំពីគ្រួសារមួយដែលអាចមើលថែបំបៅគេសម្រាប់ពួកអ្នក ដោយពួកគេចេះថ្នាក់ថ្នមគេបានល្អដែរឬទេ?

فَرَدَدۡنَٰهُ إِلَىٰٓ أُمِّهِۦ كَيۡ تَقَرَّ عَيۡنُهَا وَلَا
تَحۡزَنَ وَلِتَعۡلَمَ أَنَّ وَعۡدَ ٱللَّهِ حَقّٞ
وَلَٰكِنَّ أَكۡثَرَهُمۡ لَا يَعۡلَمُونَ ١٣

១៣-ពេលនោះយើង(អល់ឡោះ)បានប្រគល់គេឱ្យទៅម្ដាយរបស់គេវិញ ដើម្បីឱ្យនាងរំភើបរីករាយ និងឈប់ព្រួយបារម្ភ ហើយនិងដើម្បីឱ្យនាងដឹងថា ពិតប្រាកដណាស់ ការសន្យារបស់អល់ឡោះគឺជាការពិត ប៉ុន្តែពួកគេភាគច្រើនមិនដឹងឡើយ ។

وَلَمَّا بَلَغَ أَشُدَّهُۥ وَٱسۡتَوَىٰٓ ءَاتَيۡنَٰهُ حُكۡمٗا
وَعِلۡمٗاۚ وَكَذَٰلِكَ نَجۡزِي ٱلۡمُحۡسِنِينَ ١٤

១៤-ហើយនៅពេលដែលគេបានធំពេញវ័យ មានកំលាំងមាំមួន យើងបានប្រទានឱ្យគេនូវភាពឈ្លាសវៃ និងចំណេះដឹងខ្ពស់ ។ ហើយដូច្នេះដែរ យើងនឹងតបស្នងឱ្យបណ្ដាអ្នកដែលសាងអំពើល្អ ។

وَدَخَلَ ٱلۡمَدِينَةَ عَلَىٰ حِينِ غَفۡلَةٖ مِّنۡ أَهۡلِهَا
فَوَجَدَ فِيهَا رَجُلَيۡنِ يَقۡتَتِلَانِ هَٰذَا مِن
شِيعَتِهِۦ وَهَٰذَا مِنۡ عَدُوِّهِۦۖ فَٱسۡتَغَٰثَهُ ٱلَّذِي
مِن شِيعَتِهِۦ عَلَى ٱلَّذِي مِنۡ عَدُوِّهِۦ فَوَكَزَهُۥ
مُوسَىٰ فَقَضَىٰ عَلَيۡهِۖ قَالَ هَٰذَا مِنۡ عَمَلِ
ٱلشَّيۡطَٰنِۖ إِنَّهُۥ عَدُوّٞ مُّضِلّٞ مُّبِينٞ ١٥

១៥-ហើយគេ(មូសា)បានចូលទៅក្នុងទីក្រុង ខណៈដែលមនុស្សម្នានៅទីនោះមិនបានដឹង ហើយគេក៏បានប្រទះឃើញបុរសពីរនាក់កំពុងវាយតប់គ្នា ដោយម្នាក់ជាក្រុមរបស់មូសា ហើយម្នាក់ទៀតជា(ក្រុមរបស់ហ្វៀរអោន)សត្រូវរបស់គេ ។ ពេលនោះបុរសដែលជាក្រុមរបស់មូសាសុំឱ្យមូសាជួយគេតទល់នឹងអ្នកដែលជាសត្រូវរបស់គេ ។ ហើយមូសាក៏បានដាល់គេមួយដៃ ពេលនោះគេក៏បានស្លាប់ ។ ហើយមូសាបានពោលថាៈ នេះជាទង្វើរបស់ស្ហៃតន ។ ពិតប្រាកដណាស់ វា(ស្ហៃតន)គឺជាសត្រូវដែលជាអ្នកធ្វើឱ្យមនុស្សលោកវង្វេងយ៉ាងច្បាស់លាស់ ។

قَالَ رَبِّ إِنِّي ظَلَمۡتُ نَفۡسِي فَٱغۡفِرۡ لِي فَغَفَرَ
لَهُۥٓۚ إِنَّهُۥ هُوَ ٱلۡغَفُورُ ٱلرَّحِيمُ ١٦

១៦-គាត់(មូសា)បានបួងសួងសុំថាៈ ឱម្ចាស់របស់ខ្ញុំ! ខ្ញុំពិតជាបានធ្វើខុសដោយខ្លួនឯង ដូច្នេះសូមទ្រង់មេត្តាអភ័យទោសឱ្យខ្ញុំផង ។ ហើយទ្រង់ក៏បានអភ័យទោសដល់គាត់ ។ ពិតប្រាកដណាស់ ទ្រង់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

قَالَ رَبِّ بِمَآ أَنۡعَمۡتَ عَلَيَّ فَلَنۡ أَكُونَ
ظَهِيرٗا لِّلۡمُجۡرِمِينَ ١٧

១៧-គាត់បានស្បថថាៈ ឱម្ចាស់របស់ខ្ញុំ! អ្វីដែលទ្រង់បានប្រទាននៀកម៉ាត់ឱ្យខ្ញុំ ខ្ញុំនឹងមិនជួយពួកដែលប្រព្រឹត្តអំពើបាបទៀតជាដាច់ខាត ។

فَأَصۡبَحَ فِي ٱلۡمَدِينَةِ خَآئِفٗا يَتَرَقَّبُ فَإِذَا
ٱلَّذِي ٱسۡتَنصَرَهُۥ بِٱلۡأَمۡسِ يَسۡتَصۡرِخُهُۥۚ قَالَ

១៨-ហើយគាត់ស្ថិតនៅក្នុងទីក្រុង ដោយមានការភ័យខ្លាច ចាំតាមដានមើល(ពតិមានអំពីឃាតកម្មរបស់គាត់) ពេលនោះស្រាប់

لَهُۥ مُوسَىٰٓ إِنَّكَ لَغَوِيٌّ مُّبِينٌ ١٨

តែអ្នកដែលសុំឱ្យគាត់ជួយកាលពីម្សិលមិញបានស្រែកសុំឱ្យគាត់ជួយម្តងទៀត។ គាត់បាននិយាយថា: ពិតប្រាកដណាស់ អ្នកគឺជាអ្នកដែលវង្វេងយ៉ាងច្បាស់លាស់។

فَلَمَّآ أَنْ أَرَادَ أَن يَبْطِشَ بِٱلَّذِى هُوَ عَدُوٌّ
لَّهُمَا قَالَ يَٰمُوسَىٰٓ أَتُرِيدُ أَن تَقْتُلَنِى كَمَا
قَتَلْتَ نَفْسًۢا بِٱلْأَمْسِ ۖ إِن تُرِيدُ إِلَّآ أَن تَكُونَ
جَبَّارًا فِى ٱلْأَرْضِ وَمَا تُرِيدُ أَن تَكُونَ مِنَ
ٱلْمُصْلِحِينَ ١٩

១៩-ហើយនៅពេលដែលគាត់ចង់ចាប់អ្នកដែលជាសត្រូវរបស់គេទាំងពីរ( មូសា និងបុរសអំបូរអ៊ីស្រាអែល) គេ( សត្រូវ) បាននិយាយថា: ឱមូសា! តើអ្នកចង់សម្លាប់ខ្ញុំដូចដែលអ្នកបានសម្លាប់មនុស្សម្នាក់ពីម្សិលឬ? បំណងរបស់អ្នកគ្មានអ្វីក្រៅពីចង់ធ្វើជាអ្នកដែលអួតក្អេងក្អាងនៅលើផែនដីនេះឡើយ ហើយអ្នកក៏មិនចង់ធ្វើជាអ្នកសម្រុះសម្រួលដែរ។

وَجَآءَ رَجُلٌ مِّنْ أَقْصَا ٱلْمَدِينَةِ يَسْعَىٰ قَالَ
يَٰمُوسَىٰٓ إِنَّ ٱلْمَلَأَ يَأْتَمِرُونَ بِكَ لِيَقْتُلُوكَ
فَٱخْرُجْ إِنِّى لَكَ مِنَ ٱلنَّٰصِحِينَ ٢٠

២០-ហើយមានបុរសម្នាក់ធ្វើដំណើរយ៉ាងប្រញាប់ពីជាយក្រុងមកប្រាប់ថា: ឱមូសា! ពិតប្រាកដណាស់ ក្រុមមន្ត្រី( របស់ហ្វៀរ-អោន) កំពុងពិគ្រោះយោបល់គ្នាអំពីរឿងអ្នក ដើម្បីសម្លាប់អ្នក។ ដូច្នេះចូរអ្នកចាកចេញ( ពីទីក្រុងនេះ) ចុះ។ ពិតប្រាកដណាស់ ខ្ញុំគឺជាអ្នកដែលណែនាំល្អម្នាក់ដល់អ្នក។

فَخَرَجَ مِنْهَا خَآئِفًا يَتَرَقَّبُ ۖ قَالَ رَبِّ نَجِّنِى مِنَ
ٱلْقَوْمِ ٱلظَّٰلِمِينَ ٢١

២១-ហើយគាត់ក៏បានចាកចេញពីទីក្រុងនោះទាំងភ័យខ្លាចនិងប្រុងប្រយ័ត្នបំផុត( ខ្លាចក្រែងគេចាប់)។ គាត់បានបួងសួងសុំថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាសង្គ្រោះខ្ញុំពីក្រុមដែលបំពានផង។

وَلَمَّا تَوَجَّهَ تِلْقَآءَ مَدْيَنَ قَالَ عَسَىٰ
رَبِّىٓ أَن يَهْدِيَنِى سَوَآءَ ٱلسَّبِيلِ ٢٢

២២-ហើយនៅពេលដែលគាត់ធ្វើដំណើរឆ្ពោះទៅកាន់ទឹកដីម៉ាទយ៉ាន់ គាត់បាននិយាយថា: ខ្ញុំសង្ឃឹមថា ម្ចាស់របស់ខ្ញុំនឹងចង្អុលបង្ហាញខ្ញុំនូវមាគ៌ាមួយដ៏ត្រឹមត្រូវ( ទៅកាន់ម៉ាទយ៉ាន់)។

وَلَمَّا وَرَدَ مَآءَ مَدْيَنَ وَجَدَ عَلَيْهِ أُمَّةً
مِّنَ ٱلنَّاسِ يَسْقُونَ وَوَجَدَ مِن دُونِهِمُ
ٱمْرَأَتَيْنِ تَذُودَانِ ۖ قَالَ مَا خَطْبُكُمَا ۖ قَالَتَا لَا
نَسْقِى حَتَّىٰ يُصْدِرَ ٱلرِّعَآءُ ۖ وَأَبُونَا شَيْخٌ
كَبِيرٌ ٢٣

២៣-ហើយនៅពេលដែលគាត់បានទៅដល់កន្លែង( អណ្តូង) ទឹកនៅទឹកដីម៉ាទយ៉ាន់ គាត់បានជួបមនុស្សមួយក្រុមកំពុងដងទឹកឱ្យសត្វចៀមរបស់ពួកគេផឹក ហើយគាត់បានជួបស្ត្រីពីរនាក់ទៀតក្រៅពីពួកគេ ដែលកំពុងដឹកសត្វចៀមថយចេញពីទីនោះ។ មូសាក៏បានសួរថា: តើអ្នកទាំងពីរមានបញ្ហាអ្វី? នាងទាំងពីរបានឆ្លើយថា: ពួកខ្ញុំមិនអាច ដងទឹកឱ្យសត្វចៀមរបស់ពួកខ្ញុំផឹកបានទេ ទាល់តែពួកគង្វាលទាំងនោះចេញទៅសិន។ ហើយឪពុករបស់ពួកខ្ញុំ គាត់ជាមនុស្សចាស់ជរា( មិនអាចជួយពួកខ្ញុំបានឡើយ)។

فَسَقَىٰ لَهُمَا ثُمَّ تَوَلَّىٰٓ إِلَى ٱلظِّلِّ فَقَالَ رَبِّ
إِنِّي لِمَآ أَنزَلۡتَ إِلَيَّ مِنۡ خَيۡرٖ فَقِيرٞ ٢٤

២៤-ពេលនោះ គាត់ក៏បានដងទឹកឱ្យសត្វចៀមរបស់នាងទាំងពីរផឹក ។ បន្ទាប់មកគាត់បានត្រឡប់ទៅរកម្លប់វិញ ហើយបានបួងសួងសុំថា: ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំត្រូវការនូវអ្វីដែលល្អដែលទ្រង់ប្រទានឱ្យខ្ញុំ ។

فَجَآءَتۡهُ إِحۡدَىٰهُمَا تَمۡشِي عَلَى ٱسۡتِحۡيَآءٖ
قَالَتۡ إِنَّ أَبِي يَدۡعُوكَ لِيَجۡزِيَكَ أَجۡرَ مَا
سَقَيۡتَ لَنَاۚ فَلَمَّا جَآءَهُۥ وَقَصَّ عَلَيۡهِ
ٱلۡقَصَصَ قَالَ لَا تَخَفۡۖ نَجَوۡتَ مِنَ
ٱلۡقَوۡمِ ٱلظَّٰلِمِينَ ٢٥

២៥-ហើយនារីម្នាក់ក្នុងចំណោមគេទាំងពីរបានមកជួបគាត់ដោយដើរយ៉ាងអៀនខ្មាស់ នាងក៏បាននិយាយថា: ពិតប្រាកដណាស់ ឪពុករបស់ខ្ញុំអញ្ជើញអ្នកទៅដើម្បីគាត់នឹងឱ្យថ្លៃឈ្នួលដល់អ្នកដែលអ្នកបានដងទឹកឱ្យសត្វចៀមរបស់ពួកខ្ញុំផឹកនោះ ។ នៅពេលដែលមូសាបានទៅជួបគាត់ ហើយមូសាបាននិយាយរឿង( ការតាមចាប់ខ្លួនរបស់ហ្វៀរអោន) ប្រាប់គាត់ គាត់ក៏បាននិយាយថា: សូមអ្នកកុំខ្លាច អ្នកបានរួចផុតពីក្រុមដែលបំពានហើយ ។

قَالَتۡ إِحۡدَىٰهُمَا يَٰٓأَبَتِ ٱسۡتَـٔۡجِرۡهُۖ إِنَّ خَيۡرَ
مَنِ ٱسۡتَـٔۡجَرۡتَ ٱلۡقَوِيُّ ٱلۡأَمِينُ ٢٦

២៦-នារីម្នាក់ក្នុងចំណោមគេទាំងពីរបាននិយាយថា: ឱលោកឪពុកជាទីស្រឡាញ់! សូមលោកឪពុកជួលគាត់( ធ្វើជាអ្នកគង្វាលសត្វចៀមរបស់យើង) ទៅ ពិតប្រាកដណាស់ មនុស្សល្អដែលលោកឪពុកត្រូវជួលនោះ គឺមានកម្លាំងខ្លាំងក្លា និងស្មោះត្រង់ ។

قَالَ إِنِّيٓ أُرِيدُ أَنۡ أُنكِحَكَ إِحۡدَى ٱبۡنَتَيَّ
هَٰتَيۡنِ عَلَىٰٓ أَن تَأۡجُرَنِي ثَمَٰنِيَ حِجَجٖۖ فَإِنۡ
أَتۡمَمۡتَ عَشۡرٗا فَمِنۡ عِندِكَۖ وَمَآ أُرِيدُ أَنۡ
أَشُقَّ عَلَيۡكَۚ سَتَجِدُنِيٓ إِن شَآءَ ٱللَّهُ مِنَ
ٱلصَّٰلِحِينَ ٢٧

២៧-គាត់បានពោល( ទៅកាន់មូសា) ថា: ខ្ញុំមានបំណងរៀបអាពាហ៍ពិពាហ៍កូនស្រីម្នាក់ក្នុងចំណោមកូនស្រីរបស់ខ្ញុំទាំងពីរនេះឱ្យអ្នក ដោយអ្នកនៅបម្រើខ្ញុំ( គង្វាលសត្វចៀម) ក្នុងរយៈពេលប្រាំបីឆ្នាំ ។ តែបើអ្នកចង់បង្គ្រប់វាឱ្យពេញរយៈពេលដប់ឆ្នាំវាគឺជាការស្ម័គ្រចិត្តរបស់អ្នក ។ ខ្ញុំគ្មានបំណងចង់ឱ្យអ្នកលំបាកឡើយ ។ អ្នកនឹងដឹងថា ខ្ញុំគឺជាមនុស្សល្អត្រឹមត្រូវ ប្រសិនបើអល់ឡោះមានចេតនា ។

قَالَ ذَٰلِكَ بَيۡنِي وَبَيۡنَكَۖ أَيَّمَا ٱلۡأَجَلَيۡنِ
قَضَيۡتُ فَلَا عُدۡوَٰنَ عَلَيَّۖ وَٱللَّهُ عَلَىٰ مَا
نَقُولُ وَكِيلٞ ٢٨

២៨-គាត់( មូសា) បានតបថា: នោះគឺ( ជាការព្រមព្រៀង) រវាងខ្ញុំនិងអ្នក ។ អំឡុងពេលណាមួយក៏ដោយក្នុងអំឡុងពេលទាំងពីរ( ប្រាំបីឆ្នាំឬដប់ឆ្នាំ) ដែលខ្ញុំបានបំពេញគឺគ្មានការបំពាន( សុំបន្ថែម) មកលើខ្ញុំឡើយ ។ ហើយអល់ឡោះជាសាក្សីចំពោះអ្វីដែលពួកយើងនិយាយ( ព្រមព្រៀង) ។

۞ فَلَمَّا قَضَىٰ مُوسَى ٱلۡأَجَلَ وَسَارَ بِأَهۡلِهِۦٓ

២៩-ក្រោយមកនៅពេលដែលមូសាបានបំពេញតាមពេលកំណត់រួច( រយៈពេលដប់ឆ្នាំ) ហើយគាត់បានធ្វើដំណើរជាមួយនឹងគ្រួសារ

ءَانَسَ مِن جَانِبِ ٱلطُّورِ نَارًا قَالَ لِأَهۡلِهِ ٱمۡكُثُوٓاْ إِنِّيٓ ءَانَسۡتُ نَارًا لَّعَلِّيٓ ءَاتِيكُم مِّنۡهَا بِخَبَرٍ أَوۡ جَذۡوَةٖ مِّنَ ٱلنَّارِ لَعَلَّكُمۡ تَصۡطَلُونَ ٢٩

របស់គាត់(ទៅកាន់ទឹកដីអេហ្ស៊ីប) គាត់ក៏បានឃើញពន្លឺភ្លើងមួយនៅក្បែរជើងភ្នំតួរ។ គាត់បានពោលទៅកាន់គ្រួសាររបស់គាត់ថា: សូមពួកអ្នកនៅទីនេះសិនចុះ ពិតប្រាកដណាស់ខ្ញុំបានឃើញពន្លឺភ្លើងមួយ សង្ឃឹមថាខ្ញុំនឹងនាំដំណឹងខ្លះៗពីវា ឬក៏យកដុំភ្លើងមកបង្កាត់ឱ្យពួកអ្នក ដើម្បីឱ្យពួកអ្នកកំដៅខ្លួន។

فَلَمَّآ أَتَىٰهَا نُودِيَ مِن شَٰطِيِٕ ٱلۡوَادِ ٱلۡأَيۡمَنِ فِي ٱلۡبُقۡعَةِ ٱلۡمُبَٰرَكَةِ مِنَ ٱلشَّجَرَةِ أَن يَٰمُوسَىٰٓ إِنِّيٓ أَنَا ٱللَّهُ رَبُّ ٱلۡعَٰلَمِينَ ٣٠

៣០-ហើយនៅពេលដែលគាត់បានទៅដល់ពន្លឺភ្លើងនោះ គេ(អល់ឡោះ)បានហៅគាត់ចេញពីដើមឈើមួយដើមនៅក្បែរជ្រលងភ្នំខាងស្តាំនៅទីកន្លែងដ៏មានពរជ័យថា: ឱមូសា! ពិតប្រាកដណាស់ យើងគឺអល់ឡោះជាម្ចាស់គ្រប់គ្រងពិភពទាំងអស់។

وَأَنۡ أَلۡقِ عَصَاكَۖ فَلَمَّا رَءَاهَا تَهۡتَزُّ كَأَنَّهَا جَآنّٞ وَلَّىٰ مُدۡبِرٗا وَلَمۡ يُعَقِّبۡۚ يَٰمُوسَىٰٓ أَقۡبِلۡ وَلَا تَخَفۡۖ إِنَّكَ مِنَ ٱلۡأٓمِنِينَ ٣١

៣១-ហើយចូរអ្នកបោះដំបងរបស់អ្នកចុះ។ ហើយនៅពេលដែលគាត់បានឃើញវាធ្វើចលនាដូចជាពស់នោះ គាត់ក៏រត់ត្រឡប់ទៅវិញដោយមិនងាកក្រោយ។ (ពេលនោះទ្រង់មានបន្ទូលថា) ឱមូសា! ចូរអ្នកដើរចូលមក ហើយកុំភ័យខ្លាចឱ្យសោះ។ ពិតប្រាកដណាស់ អ្នកគឺស្ថិតក្នុងចំណោមអ្នកដែលមានសុវត្ថិភាព។

ٱسۡلُكۡ يَدَكَ فِي جَيۡبِكَ تَخۡرُجۡ بَيۡضَآءَ مِنۡ غَيۡرِ سُوٓءٖ وَٱضۡمُمۡ إِلَيۡكَ جَنَاحَكَ مِنَ ٱلرَّهۡبِۖ فَذَٰنِكَ بُرۡهَٰنَانِ مِن رَّبِّكَ إِلَىٰ فِرۡعَوۡنَ وَمَلَإِيْهِۦٓۚ إِنَّهُمۡ كَانُواْ قَوۡمٗا فَٰسِقِينَ ٣٢

៣២-ហើយចូរអ្នកលូកដៃរបស់អ្នកចូលទៅក្នុងប្រឡោះកអាវរបស់អ្នក នោះវានឹងចេញពន្លឺសចែងចាំងដោយមិនមែនជាប្រការអាក្រក់ឡើយ។ ហើយចូរអ្នកយកដៃ(ស្តាំ)របស់អ្នកដាក់ចូលទៅចំហៀង ខ្លួន(ខាងឆ្វេង)របស់អ្នកដើម្បីចៀសវាងពីការភ័យខ្លាច។ ដូច្នេះ ទាំងពីរនេះគឺជាភស្តុតាងពីម្ចាស់របស់អ្នកទៅកាន់ហ្វៀរអោន និង ពួកមន្ត្រីរបស់គេ។ ពិតប្រាកដណាស់ ពួកគេគឺជាក្រុមដែលប្រាសចាកពីការប្រតិបត្តិមកចំពោះយើង។

قَالَ رَبِّ إِنِّي قَتَلۡتُ مِنۡهُمۡ نَفۡسٗا فَأَخَافُ أَن يَقۡتُلُونِ ٣٣

៣៣-គាត់(មូសា)បានពោលថា: ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំបានសម្លាប់ពួកគេម្នាក់ ហើយខ្ញុំខ្លាចពួកគេនឹងសម្លាប់ខ្ញុំវិញ។

وَأَخِي هَٰرُونُ هُوَ أَفۡصَحُ مِنِّي لِسَانٗا فَأَرۡسِلۡهُ مَعِيَ رِدۡءٗا يُصَدِّقُنِيٓۖ إِنِّيٓ أَخَافُ أَن

៣៤-ហើយបងរបស់ខ្ញុំហារូន គាត់និយាយច្បាស់ជាងខ្ញុំ។ ដូច្នេះ សូមទ្រង់មេត្តាបញ្ជូនគាត់ទៅជាមួយខ្ញុំ ដើម្បីគាត់ធ្វើជាអ្នកជួយ

បញ្ចាក់ពីភាពសច្ចៈរបស់ខ្ញុំ ។ ពិតប្រាកដណាស់ ខ្ញុំខ្លាចពួកគេបដិសេធនឹងខ្ញុំ ។

៣៥-ទ្រង់បានមានបន្ទូលថាៈ យើងនឹងពង្រឹងកិច្ចការរបស់អ្នកដោយបងប្រុសរបស់អ្នក ហើយយើងនឹងប្រទានអំណាចដល់អ្នកទាំងពីរ ។ ហើយពួកគេមិនអាចធ្វើទុក្ខទោសដល់អ្នកទាំងពីរបានឡើយ ។ ដោយសារភស្តុតាងរបស់យើង អ្នកទាំងពីរនិងអ្នកដែលបានតាមអ្នកទាំងពីរគឺជាអ្នកដែលមានជ័យជំនះ ។

៣៦-ហើយនៅពេលដែលមូសាបាននាំមកបង្ហាញពួកគេនូវភស្តុតាងរបស់យើងយ៉ាងជាក់ច្បាស់នោះ ពួកគេនិយាយថាៈ នេះគ្មានអ្វីក្រៅពីជាមន្តអាគមដែលគេបានប្រឌិតឡើយ ។ ហើយពួកយើងមិនដែលបានឮរឿងបែបនេះទេតាំងពីជីដូនជីតារបស់ពួកយើងមុនមកម្ល៉េះ ។

៣៧-ហើយមូសាបានឆ្លើយថាៈ ម្ចាស់របស់ខ្ញុំដឹងបំផុតចំពោះអ្នកណាដែលបាននាំមកនូវការចង្អុលបង្ហាញពីទ្រង់ និងអ្នកណាដែលទទួលបានលទ្ធផលល្អនៅថ្ងៃបរលោក ។ ពិតប្រាកដណាស់ ពួកដែលបំពានគឺមិនទទួលជោគជ័យឡើយ ។

៣៨-ហើយហ្វៀរអោនបាននិយាយថាៈ ឱពួកមន្ត្រី! យើងមិនដែលដឹងសោះថា ពួកអ្នកមានម្ចាស់ផ្សេងក្រៅពីយើង ។ ហើយចូរអ្នកដុតដីធ្វើជាដុំឥដ្ឋឱ្យយើង ឱហ៊ើម៉ាន! រួចសាងសង់វិមានមួយយ៉ាងខ្ពស់ឱ្យយើង ដើម្បីយើងនឹងឡើងទៅមើលម្ចាស់របស់មូសា ។ ហើយពិតប្រាកដណាស់ យើងគិតថា គេជាអ្នកដែលស្ថិតក្នុងចំណោមពួកដែលភូតកុហក ។

៣៩-ហើយហ្វៀរអោននិងពលទាហានរបស់គេបានក្រអឺតក្រទមនៅលើទឹកដីនេះ( អេហ្ស៊ីប) ដោយគ្មានមូលហេតុត្រឹមត្រូវឡើយ ។ ហើយពួកគេបានគិតថា ពិតប្រាកដណាស់ ពួកគេនឹងមិនត្រូវគេឱ្យវិលត្រឡប់មកជួបយើងវិញឡើយ( នៅថ្ងៃបរលោក) ។

៤០-ក្រោយមក យើងបានក្របួចគេនិងពលទាហានរបស់គេរួចយើងក៏បោះពួកគេចូលទៅក្នុងសមុទ្រ ។ ដូច្នេះ ចូរអ្នក( មូហាំ-

يُكَذِّبُونِ ٣٤

قَالَ سَنَشُدُّ عَضُدَكَ بِأَخِيكَ وَنَجۡعَلُ لَكُمَا
سُلۡطَٰنٗا فَلَا يَصِلُونَ إِلَيۡكُمَا بِـَٔايَٰتِنَآۚ أَنتُمَا
وَمَنِ ٱتَّبَعَكُمَا ٱلۡغَٰلِبُونَ ٣٥

فَلَمَّا جَآءَهُم مُّوسَىٰ بِـَٔايَٰتِنَا بَيِّنَٰتٖ قَالُواْ مَا
هَٰذَآ إِلَّا سِحۡرٞ مُّفۡتَرٗى وَمَا سَمِعۡنَا بِهَٰذَا فِيٓ
ءَابَآئِنَا ٱلۡأَوَّلِينَ ٣٦

وَقَالَ مُوسَىٰ رَبِّيٓ أَعۡلَمُ بِمَن جَآءَ بِٱلۡهُدَىٰ
مِنۡ عِندِهِۦ وَمَن تَكُونُ لَهُۥ عَٰقِبَةُ ٱلدَّارِۖ
إِنَّهُۥ لَا يُفۡلِحُ ٱلظَّٰلِمُونَ ٣٧
وَقَالَ فِرۡعَوۡنُ يَٰٓأَيُّهَا ٱلۡمَلَأُ مَا عَلِمۡتُ لَكُم
مِّنۡ إِلَٰهٍ غَيۡرِي فَأَوۡقِدۡ لِي يَٰهَٰمَٰنُ عَلَى
ٱلطِّينِ فَٱجۡعَل لِّي صَرۡحٗا لَّعَلِّيٓ أَطَّلِعُ إِلَىٰٓ إِلَٰهِ
مُوسَىٰ وَإِنِّي لَأَظُنُّهُۥ مِنَ ٱلۡكَٰذِبِينَ ٣٨

وَٱسۡتَكۡبَرَ هُوَ وَجُنُودُهُۥ فِي ٱلۡأَرۡضِ بِغَيۡرِ
ٱلۡحَقِّ وَظَنُّوٓاْ أَنَّهُمۡ إِلَيۡنَا لَا يُرۡجَعُونَ ٣٩

فَأَخَذۡنَٰهُ وَجُنُودَهُۥ فَنَبَذۡنَٰهُمۡ فِي

ٱلۡيَمِّۖ فَٱنظُرۡ كَيۡفَ كَانَ عَٰقِبَةُ
ٱلظَّٰلِمِينَ ﴿٤٠﴾

ម៉ាត់) មើលចុះថា តើលទ្ធផលចុងក្រោយរបស់ពួកដែលបំពាននោះយ៉ាងដូចម្ដេច?

وَجَعَلۡنَٰهُمۡ أَئِمَّةٗ يَدۡعُونَ إِلَى ٱلنَّارِۖ وَيَوۡمَ
ٱلۡقِيَٰمَةِ لَا يُنصَرُونَ ﴿٤١﴾

៤១-ហើយយើង(អល់ឡោះ) បានធ្វើឱ្យពួកគេក្លាយជាមេដឹកនាំដែលអំពាវនាវ(មនុស្សលោក) ទៅកាន់នរក។ ហើយនៅថ្ងៃបរលោកពួកគេគ្មានអ្នកណាជួយឡើយ ។

وَأَتۡبَعۡنَٰهُمۡ فِي هَٰذِهِ ٱلدُّنۡيَا لَعۡنَةٗۖ وَيَوۡمَ
ٱلۡقِيَٰمَةِ هُم مِّنَ ٱلۡمَقۡبُوحِينَ ﴿٤٢﴾

៤២-ហើយយើងបានដាក់បណ្ដាសាឱ្យតាមចងពៀរពួកគេនៅក្នុងលោកិយនេះ ។ ហើយនៅថ្ងៃបរលោកវិញ ពួកគេស្ថិតក្នុងចំណោមពួកដែលឃ្លាតឆ្ងាយ(ពីក្ដីមេត្ដាករុណារបស់អល់ឡោះ) ។

وَلَقَدۡ ءَاتَيۡنَا مُوسَى ٱلۡكِتَٰبَ مِنۢ بَعۡدِ مَآ
أَهۡلَكۡنَا ٱلۡقُرُونَ ٱلۡأُولَىٰ بَصَآئِرَ لِلنَّاسِ
وَهُدٗى وَرَحۡمَةٗ لَّعَلَّهُمۡ يَتَذَكَّرُونَ ﴿٤٣﴾

៤៣-ហើយជាការពិតណាស់ យើងបានប្រទានគម្ពីរ(តាវ រ៉ត) ឱ្យមូសាបន្ទាប់ពីយើងបានបំផ្លាញពួកជំនាន់មុនឱ្យវិនាស ដើម្បីជាការបំភ្លឺ និងជាការចង្អុលបង្ហាញ ហើយនិងជាក្ដីមេត្ដាករុណាចំពោះមនុស្សលោក ។ សង្ឃឹមថា ពួកគេនឹកឃើញ ។

وَمَا كُنتَ بِجَانِبِ ٱلۡغَرۡبِيِّ إِذۡ قَضَيۡنَآ
إِلَىٰ مُوسَى ٱلۡأَمۡرَ وَمَا كُنتَ مِنَ
ٱلشَّٰهِدِينَ ﴿٤٤﴾

៤៤-ហើយអ្នក(មូហាំម៉ាត់) មិនបាននៅក្បែរភ្នំខាងលិចនោះទេ នៅពេលដែលយើងបានដាក់បញ្ញត្តិ(តែងតាំងធ្វើជាអ្នកនាំសារ) ដល់មូសា ។ ហើយអ្នកក៏មិនបានស្ថិតក្នុងចំណោមអ្នកដែលបានឃើញហេតុការណ៍នោះដែរ ។

وَلَٰكِنَّآ أَنشَأۡنَا قُرُونٗا فَتَطَاوَلَ عَلَيۡهِمُ ٱلۡعُمُرُۚ
وَمَا كُنتَ ثَاوِيٗا فِيٓ أَهۡلِ مَدۡيَنَ تَتۡلُواْ
عَلَيۡهِمۡ ءَايَٰتِنَا وَلَٰكِنَّا كُنَّا مُرۡسِلِينَ ﴿٤٥﴾

៤៥-ប៉ុន្តែយើងបានបង្កើតមនុស្សជាច្រើនជំនាន់(បន្ទាប់ពីមូសា) ។ ហើយពួកគេបានរស់នៅក្នុងរយៈពេលដ៏យូរអង្វែង(រហូតភ្លេចគិតពីការសន្យារបស់អល់ឡោះ និងបោះបង់ការប្រតិបត្តិទៅចំពោះទ្រង់) ។ ហើយអ្នក(មូហាំម៉ាត់) ក៏ពុំបានរស់នៅជាមួយអ្នកស្រុកម៉ាទយ៉ាន់ ដោយអ្នកសូត្រអាយ៉ាត់ៗរបស់យើងឱ្យពួកគេស្ដាប់ដែរ ។ ប៉ុន្តែយើងទេគឺជាអ្នកផ្ដល់ដំណឹង(រឿងរ៉ាវរបស់មូសា) ឱ្យអ្នកដឹងនោះ ។

وَمَا كُنتَ بِجَانِبِ ٱلطُّورِ إِذۡ نَادَيۡنَا وَلَٰكِن
رَّحۡمَةٗ مِّن رَّبِّكَ لِتُنذِرَ قَوۡمٗا مَّآ أَتَىٰهُم مِّن
نَّذِيرٖ مِّن قَبۡلِكَ لَعَلَّهُمۡ يَتَذَكَّرُونَ ﴿٤٦﴾

៤៦-ហើយអ្នក(មូហាំម៉ាត់) មិនបាននៅក្បែរភ្នំតួរនោះទេនៅពេលដែលយើងបានស្រែកហៅ(មូសា) នោះ ។ ប៉ុន្តែដោយក្ដីមេត្ដាករុណាពីម្ចាស់របស់អ្នក ( ទ្រង់បានតែងតាំងអ្នកជាអ្នកនាំសារ) ដើម្បីដាស់តឿនព្រមានដល់ក្រុមដែលគ្មានអ្នកដាស់តឿនណាម្នាក់

ទៅដល់ពួកគេកាលពីមុនអ្នក។ សង្ឃឹមថា ពួកគេនឹកឃើញ។

៤៧-ប្រសិនបើគ្មានគ្រោះមហន្តរាយធ្លាក់មកលើពួកគេដោយសារតែទង្វើរបស់ពួកគេបានសាងកន្លងមក ហើយពួកគេនិយាយថាៈ ឱម្ចាស់របស់ពួកយើង! ហេតុអ្វីបានជាទ្រង់មិនបានបញ្ជូនអ្នកនាំសារម្នាក់មកឱ្យពួកយើង ដើម្បីឱ្យពួកយើងអនុវត្តតាមអាយ៉ាត់ៗរបស់ទ្រង់ និងដើម្បីឱ្យពួកយើងក្លាយជាអ្នកដែលមានជំនឿទេនោះ (យើងពិតជាមិនតែងតាំងអ្នកជាអ្នកនាំសារឡើយ)។

وَلَوۡلَآ أَن تُصِيبَهُم مُّصِيبَةُۢ بِمَا قَدَّمَتۡ أَيۡدِيهِمۡ فَيَقُولُواْ رَبَّنَا لَوۡلَآ أَرۡسَلۡتَ إِلَيۡنَا رَسُولٗا فَنَتَّبِعَ ءَايَٰتِكَ وَنَكُونَ مِنَ ٱلۡمُؤۡمِنِينَ ﴿٤٧﴾

៤៨-តែនៅពេលដែលការពិត(មូហាំម៉ាត់)របស់យើងបានមកដល់ពួកគេ ពួកគេបែរជានិយាយថាៈ ហេតុអ្វីបានជាអល់ឡោះមិនប្រទានឱ្យគេ(មូហាំម៉ាត់)ដូចអ្វីដែលគេបានប្រទានឱ្យមូសា? (ឱមូហាំម៉ាត់! ចូរអ្នកពោលទៅកាន់ពួកមូស្ហរីគីនថា) តើពួកគេ(ពួកយ៉ាហ៊ូទី)មិនបានបដិសេធនឹងអ្វីដែលគេបានប្រទានឱ្យមូសាពីមុនទេឬ? ពួកគេ(ពួកមូស្ហរីគីន)បានតបថាៈ ទាំងពីរនេះ(គម្ពីរតាវរ៉ត និងគម្ពីរគួរអាន)គឺជាមន្តអាគមដែលបានជួយជ្រោមជ្រែងគ្នាទៅវិញទៅមក។ ហើយពួកគេនិយាយទៀតថាៈ ពិតប្រាកដណាស់ ពួកយើងគឺជាអ្នកបដិសេធរាល់អ្វី(ដែលមាននៅក្នុងគម្ពីរទាំងពីរនេះ)។

فَلَمَّا جَآءَهُمُ ٱلۡحَقُّ مِنۡ عِندِنَا قَالُواْ لَوۡلَآ أُوتِيَ مِثۡلَ مَآ أُوتِيَ مُوسَىٰٓۚ أَوَلَمۡ يَكۡفُرُواْ بِمَآ أُوتِيَ مُوسَىٰ مِن قَبۡلُۖ قَالُواْ سِحۡرَانِ تَظَٰهَرَا وَقَالُوٓاْ إِنَّا بِكُلّٖ كَٰفِرُونَ ﴿٤٨﴾

៤៩-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ដូច្នេះ ចូរពួកអ្នកនាំគម្ពីរណាមួយពីអល់ឡោះដែលវាមានការចង្អុលបង្ហាញប្រសើរជាងវាទាំងពីរ(គម្ពីរតាវរ៉ត និងគម្ពីរគួរអាន)មកចុះ ខ្ញុំនឹងប្រតិបត្តិតាមវា ប្រសិនបើពួកអ្នកជាអ្នកដែលនិយាយត្រឹមត្រូវមែននោះ។

قُلۡ فَأۡتُواْ بِكِتَٰبٖ مِّنۡ عِندِ ٱللَّهِ هُوَ أَهۡدَىٰ مِنۡهُمَآ أَتَّبِعۡهُ إِن كُنتُمۡ صَٰدِقِينَ ﴿٤٩﴾

៥០-តែប្រសិនបើពួកគេមិនអាចឆ្លើយតបចំពោះអ្នកបានទេនោះ ចូរអ្នកដឹងថាៈ តាមពិតពួកគេគ្រាន់តែធ្វើតាមចំណង់ចិត្តរបស់ពួកគេប៉ុណ្ណោះ។ ហើយគ្មានអ្នកណាដែលវង្វេងជាងអ្នកដែលធ្វើតាមចំណង់ចិត្តរបស់គេដោយគ្មានការចង្អុលបង្ហាញពីអល់ឡោះនោះឡើយ។ ពិតប្រាកដណាស់ អល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលបំពានឡើយ។

فَإِن لَّمۡ يَسۡتَجِيبُواْ لَكَ فَٱعۡلَمۡ أَنَّمَا يَتَّبِعُونَ أَهۡوَآءَهُمۡۚ وَمَنۡ أَضَلُّ مِمَّنِ ٱتَّبَعَ هَوَىٰهُ بِغَيۡرِ هُدٗى مِّنَ ٱللَّهِۚ إِنَّ ٱللَّهَ لَا يَهۡدِي ٱلۡقَوۡمَ ٱلظَّٰلِمِينَ ﴿٥٠﴾

៥១-ហើយជាការពិតណាស់ យើងបានបញ្ជាក់ក្នុងគម្ពីរគួរអានជារឿយៗ(នូវហេតុការណ៍មហន្តរាយរបស់ពួកជំនាន់មុន)សម្រាប់

۞ وَلَقَدۡ وَصَّلۡنَا لَهُمُ ٱلۡقَوۡلَ لَعَلَّهُمۡ يَتَذَكَّرُونَ ﴿٥١﴾

ពួកគេ សង្ឃឹមថាពួកគេនឹងនឹកឃើញ។

៥២-ពួកដែលយើងបានប្រទានគម្ពីរ(តាវ៉រ៉ត និងអ៊ីញជីល)ឱ្យពួកគេមុនវា(គម្ពីរគួរអាន)គឺពួកគេមានជំនឿនឹងវា។

ٱلَّذِينَ ءَاتَيْنَٰهُمُ ٱلْكِتَٰبَ مِن قَبْلِهِۦ هُم بِهِۦ
يُؤْمِنُونَ ﴿٥٢﴾

៥៣-ហើយនៅពេលដែលគេសូត្រ(គម្ពីរគួរអាន)ឱ្យពួកគេស្តាប់ ពួកគេនិយាយថាៈ ពួកយើងបានជឿនឹងវាហើយ។ ពិតប្រាកដណាស់ វាគឺជាការពិតមកពីម្ចាស់របស់ពួកយើង។ ពិតប្រាកដណាស់ ពួកយើងជាអ្នកដែលព្រមទទួលយកសាសនាអ៊ីស្លាមមុននឹងការបញ្ចុះវាទៅទៀត។

وَإِذَا يُتْلَىٰ عَلَيْهِمْ قَالُوٓا۟ ءَامَنَّا بِهِۦٓ إِنَّهُ ٱلْحَقُّ
مِن رَّبِّنَآ إِنَّا كُنَّا مِن قَبْلِهِۦ مُسْلِمِينَ ﴿٥٣﴾

៥៤-ពួកទាំងនោះហើយជាពួកដែលគេផ្តល់ផលបុណ្យឱ្យពួកគេទ្វេដងដោយសារតែអ្វីដែលពួកគេបានអត់ធ្មត់(ព្រមជឿនឹងគម្ពីរតាវ៉រ៉ត អ៊ីញជីល និងគម្ពីរគួរអាន)និងច្រានចោលប្រការអាក្រក់ដោយប្រការល្អ ហើយនិងបរិច្ចាគអំពីអ្វីដែលយើងប្រទានលាភសក្ការៈឱ្យពួកគេ។

أُو۟لَٰٓئِكَ يُؤْتَوْنَ أَجْرَهُم مَّرَّتَيْنِ بِمَا صَبَرُوا۟
وَيَدْرَءُونَ بِٱلْحَسَنَةِ ٱلسَّيِّئَةَ وَمِمَّا رَزَقْنَٰهُمْ
يُنفِقُونَ ﴿٥٤﴾

៥៥-ហើយនៅពេលដែលពួកគេបានស្តាប់ឮរឿងគ្មានផលប្រយោជន៍[1] ពួកគេងាកចេញពីវា ហើយបានពោលថាៈ ការប្រព្រឹត្តរបស់ពួកយើងគឺវាសម្រាប់ពួកយើង ហើយការប្រព្រឹត្តរបស់ពួកអ្នកគឺសម្រាប់ពួកអ្នក។ សូមឱ្យមានសុខសន្តិភាពចំពោះពួកអ្នក។ ពួកយើងមិនត្រូវការនិយាយជាមួយអ្នកដែលល្ងង់ខ្លៅទេ។

وَإِذَا سَمِعُوا۟ ٱللَّغْوَ أَعْرَضُوا۟ عَنْهُ وَقَالُوا۟ لَنَآ
أَعْمَٰلُنَا وَلَكُمْ أَعْمَٰلُكُمْ سَلَٰمٌ عَلَيْكُمْ لَا نَبْتَغِى
ٱلْجَٰهِلِينَ ﴿٥٥﴾

៥៦-ពិតប្រាកដណាស់ អ្នក(មូហាំម៉ាត់)មិនអាចចង្អុលបង្ហាញចំពោះអ្នកណាដែលអ្នកស្រឡាញ់បានឡើយ ក៏ប៉ុន្តែអល់ឡោះអាចចង្អុលបង្ហាញចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយទ្រង់ដឹងបំផុតចំពោះបណ្តាអ្នកដែលបានទទួលការចង្អុលបង្ហាញ។

إِنَّكَ لَا تَهْدِى مَنْ أَحْبَبْتَ وَلَٰكِنَّ ٱللَّهَ يَهْدِى
مَن يَشَآءُ ۚ وَهُوَ أَعْلَمُ بِٱلْمُهْتَدِينَ ﴿٥٦﴾

៥៧-ហើយពួកគេ(ពួកមូស្ហរីគីនម៉ាក្កះ)បាននិយាយថាៈ ប្រសិនបើពួកយើងព្រមតាមការចង្អុលបង្ហាញជាមួយនឹងអ្នក ពួកយើងពិតជាត្រូវគេបណ្តេញចេញពីទឹកដីរបស់ពួកយើងជាមិនខាន។ តើយើងមិនបានផ្តល់ឱ្យពួកគេនូវទឹកដីហារ៉មៈ(ម៉ាក្កះ) ដែលប្រកបដោយ

وَقَالُوٓا۟ إِن نَّتَّبِعِ ٱلْهُدَىٰ مَعَكَ نُتَخَطَّفْ مِنْ
أَرْضِنَآ ۚ أَوَلَمْ نُمَكِّن لَّهُمْ حَرَمًا ءَامِنًا يُجْبَىٰٓ
إِلَيْهِ ثَمَرَٰتُ كُلِّ شَىْءٍ رِّزْقًا مِّن لَّدُنَّا وَلَٰكِنَّ

១-អ្វីៗដែលពួកគេបានឮពីពួកមូស្ហរីគីននិយាយចំអក ជេរស្តីដល់អ្នកមូស្លីម។

أَكۡثَرَهُمۡ لَا يَعۡلَمُونَ ٥٧

សុវត្ថិភាពដែលគេនាំទៅទីនោះនូវដំណាំផ្លែឈើគ្រប់ប្រភេទជាលាភសក្ការៈពីយើងទេឬ? ប៉ុន្តែពួកគេភាគច្រើនមិនដឹងឡើយ ។

وَكَمۡ أَهۡلَكۡنَا مِن قَرۡيَةِۭ بَطِرَتۡ مَعِيشَتَهَاۖ فَتِلۡكَ مَسَٰكِنُهُمۡ لَمۡ تُسۡكَن مِّنۢ بَعۡدِهِمۡ إِلَّا قَلِيلٗاۖ وَكُنَّا نَحۡنُ ٱلۡوَٰرِثِينَ ٥٨

៥៨-ហើយយើងបានបំផ្លាញភូមិស្រុកអស់ជាច្រើនមកហើយដែលមិនបានដឹងគុណដល់ការរស់នៅរបស់គេ ។ ហើយលំនៅដ្ឋានរបស់ពួកគេគ្មានអ្នកណារស់នៅបន្ទាប់ពីពួកគេឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ ។ ហើយយើងគឺជាអ្នកដែលទទួលមរតក ។

وَمَا كَانَ رَبُّكَ مُهۡلِكَ ٱلۡقُرَىٰ حَتَّىٰ يَبۡعَثَ فِيٓ أُمِّهَا رَسُولٗا يَتۡلُواْ عَلَيۡهِمۡ ءَايَٰتِنَاۚ وَمَا كُنَّا مُهۡلِكِي ٱلۡقُرَىٰٓ إِلَّا وَأَهۡلُهَا ظَٰلِمُونَ ٥٩

៥៩-ម្ចាស់របស់អ្នកមិនមែនជាអ្នកដែលបំផ្លាញភូមិស្រុកណាមួយឡើយ លុះត្រាតែទ្រង់ចាត់តាំងក្នុងភូមិស្រុកនោះនូវអ្នកនាំសារម្នាក់ ដើម្បីសូត្រអាយ៉ាត់ៗរបស់យើងឱ្យពួកគេស្តាប់សិន ។ ហើយយើងមិនមែនជាអ្នកបំផ្លាញភូមិស្រុកណាមួយឡើយ លើកលែងតែអ្នកភូមិស្រុកនោះជាពួកដែលបំពានប៉ុណ្ណោះ ។

وَمَآ أُوتِيتُم مِّن شَيۡءٖ فَمَتَٰعُ ٱلۡحَيَوٰةِ ٱلدُّنۡيَا وَزِينَتُهَاۚ وَمَا عِندَ ٱللَّهِ خَيۡرٞ وَأَبۡقَىٰٓۚ أَفَلَا تَعۡقِلُونَ ٦٠

៦០-ហើយអ្វីក៏ដោយដែលគេបានប្រទានឱ្យពួកអ្នកគ្រាន់តែជាការសប្បាយនៃជីវិតលោកិយនិងជាការលំអរបស់វាប៉ុណ្ណោះ ។ តែអ្វីដែលនៅជាមួយអល់ឡោះគឺវាល្អប្រសើរជាង ហើយគង់វង្សជាអមតៈទៀតផង ។ ដូច្នេះ តើពួកអ្នកមិនពិចារណាទេឬ?

أَفَمَن وَعَدۡنَٰهُ وَعۡدًا حَسَنٗا فَهُوَ لَٰقِيهِ كَمَن مَّتَّعۡنَٰهُ مَتَٰعَ ٱلۡحَيَوٰةِ ٱلدُّنۡيَا ثُمَّ هُوَ يَوۡمَ ٱلۡقِيَٰمَةِ مِنَ ٱلۡمُحۡضَرِينَ ٦١

៦១-តើអ្នកដែលយើងបានសន្យាឱ្យគេនូវការសន្យាមួយដ៏ប្រពៃ (ឋានសួគ៌) រួចគេពិតជាទទួលបានវាមែននោះ (នៅថ្ងៃបរលោក) ដូចអ្នកដែលយើងបានផ្តល់ឱ្យគេនូវភាពសប្បាយរីករាយនៃការរស់នៅក្នុងលោកិយ ក្រោយមកនៅថ្ងៃបរលោកគេស្ថិតក្នុងចំណោមពួកដែលត្រូវគេនាំទៅកាន់នរកដែរឬទេ?

وَيَوۡمَ يُنَادِيهِمۡ فَيَقُولُ أَيۡنَ شُرَكَآءِيَ ٱلَّذِينَ كُنتُمۡ تَزۡعُمُونَ ٦٢

៦២-ហើយនៅថ្ងៃនោះអល់ឡោះនឹងហៅពួកគេ រួចទ្រង់មានបន្ទូលថាៈ តើគូកនរបស់យើង (ព្រះនានា) ដែលពួកអ្នកធ្លាប់បានអះអាងនោះនៅឯណា?

قَالَ ٱلَّذِينَ حَقَّ عَلَيۡهِمُ ٱلۡقَوۡلُ رَبَّنَا هَٰٓؤُلَآءِ ٱلَّذِينَ أَغۡوَيۡنَآ أَغۡوَيۡنَٰهُمۡ كَمَا غَوَيۡنَاۖ تَبَرَّأۡنَآ إِلَيۡكَۖ مَا كَانُوٓاْ إِيَّانَا يَعۡبُدُونَ ٦٣

៦៣-ពួកដែលទារុណកម្មត្រូវធ្លាក់លើពួកគេ (ពួកមេដឹកនាំរបស់ពួកដែលវង្វេង) បាននិយាយថាៈ ឱម្ចាស់របស់ពួកយើង! ពួកទាំងនេះហើយដែលពួកយើងបានធ្វើឱ្យវង្វេង (ពីមាគ៌ារបស់ទ្រង់) ។ ពួកយើងក៏បានធ្វើឱ្យពួកគេវង្វេងដូចដែលពួកយើងបានវង្វេងនោះដែរ ។ ពួកយើងសូមដកខ្លួន (ចេញពីពួកគេ) ទៅរកទ្រង់វិញ ។ ពួកគេមិន

បានគោរពសក្ការៈចំពោះពួកយើងឡើយ (តាមពិតពួកគេគោរពសក្ការៈតាមចំណង់ចិត្តរបស់ពួកគេ) ។

وَقِيلَ ٱدۡعُواْ شُرَكَآءَكُمۡ فَدَعَوۡهُمۡ فَلَمۡ يَسۡتَجِيبُواْ لَهُمۡ وَرَأَوُاْ ٱلۡعَذَابَۚ لَوۡ أَنَّهُمۡ كَانُواْ يَهۡتَدُونَ ٦٤

៦៤-ហើយមានគេពោល(ទៅកាន់ពួកគេថា) ចូរពួកអ្នកបួងសួងសុំពីព្រះនានារបស់ពួកអ្នកមើល! ពួកគេក៏បានបួងសួងសុំព្រះទាំងនោះ តែពួកវាមិនបានឆ្លើយតបចំពោះពួកគេឡើយ ។ ហើយពួកគេក៏បានឃើញទារុណកម្ម (រួចបានគិតថា) ពិតប្រាកដណាស់ ប្រសិនបើពួកគេព្រមទទួលយកការចង្អុលបង្ហាញនោះ (ពួកគេពិតជាពុំត្រូវបានទទួលនូវទារុណកម្មឡើយ) ។

وَيَوۡمَ يُنَادِيهِمۡ فَيَقُولُ مَاذَآ أَجَبۡتُمُ ٱلۡمُرۡسَلِينَ ٦٥

៦៥-ហើយនៅថ្ងៃដែលអល់ឡោះហៅពួកគេ រួចទ្រង់មានបន្ទូលថាៈ តើពួកអ្នកបានឆ្លើយតបអ្វីខ្លះចំពោះបណ្តាអ្នកនាំសារ?

فَعَمِيَتۡ عَلَيۡهِمُ ٱلۡأَنۢبَآءُ يَوۡمَئِذٖ فَهُمۡ لَا يَتَسَآءَلُونَ ٦٦

៦៦-ហើយអំណះអំណាងទាំងឡាយនៅថ្ងៃនោះបានធ្វើឱ្យពួកគេងងឹត(មិនដឹងអ្វីឡើយ) ហើយពួកគេក៏មិនអាចសួរគ្នាទៅវិញទៅមកបានដែរ ។

فَأَمَّا مَن تَابَ وَءَامَنَ وَعَمِلَ صَٰلِحٗا فَعَسَىٰٓ أَن يَكُونَ مِنَ ٱلۡمُفۡلِحِينَ ٦٧

៦៧-រីឯអ្នកណាហើយដែលបានសារភាពទោសកំហុស និងមានជំនឿ ហើយនិងបានធ្វើអំពើល្អត្រឹមត្រូវនោះ សង្ឃឹមថាគេនឹងក្លាយជាអ្នកដែលស្ថិតក្នុងចំណោមអ្នកដែលទទួលបានជោគជ័យ ។

وَرَبُّكَ يَخۡلُقُ مَا يَشَآءُ وَيَخۡتَارُۗ مَا كَانَ لَهُمُ ٱلۡخِيَرَةُۚ سُبۡحَٰنَ ٱللَّهِ وَتَعَٰلَىٰ عَمَّا يُشۡرِكُونَ ٦٨

៦៨-ហើយម្ចាស់របស់អ្នកទ្រង់បង្កើត និងជ្រើសរើសនូវអ្វីដែលទ្រង់មានចេតនា ។ ពួកគេគ្មានជម្រើសឡើយ ។ អល់ឡោះមហាស្អាតស្អំ និងខ្ពង់ខ្ពស់បំផុតអំពីអ្វីដែលពួកគេកំពុងតែធ្វើស្ហ៊ីរិក ។

وَرَبُّكَ يَعۡلَمُ مَا تُكِنُّ صُدُورُهُمۡ وَمَا يُعۡلِنُونَ ٦٩

៦៩-ហើយម្ចាស់របស់អ្នកដឹងនូវអ្វីដែលទ្រូងរបស់ពួកគេលាក់បាំង និងអ្វីដែលពួកគេលាតត្រដាង ។

وَهُوَ ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَۖ لَهُ ٱلۡحَمۡدُ فِي ٱلۡأُولَىٰ وَٱلۡأٓخِرَةِۖ وَلَهُ ٱلۡحُكۡمُ وَإِلَيۡهِ تُرۡجَعُونَ ٧٠

៧០-ហើយទ្រង់គឺអល់ឡោះជាម្ចាស់ដែលគ្មានម្ចាស់ណាផ្សេងត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ រាល់ការសរសើរនៅក្នុងលោកិយ និងថ្ងៃបរលោកគឺចំពោះទ្រង់តែមួយគត់ ។ ហើយការកាត់សេចក្តីគឺជាកម្មសិទ្ធិរបស់ទ្រង់ ។ ហើយពួកអ្នកនឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់តែមួយគត់ ។

៧១-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចូរពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើអល់ឡោះបានធ្វើឱ្យពួកអ្នកមានពេលយប់ស្ថិតស្ថេរ រហូតដល់ថ្ងៃបរលោកនោះ តើមានម្ចាស់ណាផ្សេងពីអល់ឡោះ ដែលអាចនាំពន្លឺមកឱ្យពួកអ្នក? ដូច្នេះតើពួកអ្នកមិនស្តាប់ឮទេឬ?

៧២-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចូរពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើអល់ឡោះបានធ្វើឱ្យពួកអ្នកមានពេលថ្ងៃស្ថិតស្ថេររហូតដល់ថ្ងៃបរលោកនោះ តើមានម្ចាស់ណាផ្សេងពីអល់ឡោះដែលអាចនាំពេលយប់មកឱ្យពួកអ្នក ដើម្បីឱ្យពួកអ្នកសម្រាកក្នុងវា? ដូច្នេះតើពួកអ្នកមិនឃើញទេឬ?

៧៣-ហើយដោយមានក្តីមេត្តាករុណារបស់ទ្រង់ ទ្រង់បានបង្កើតពេលយប់និងពេលថ្ងៃសម្រាប់ពួកអ្នក ដើម្បីឱ្យពួកអ្នកសម្រាកក្នុងវា និងដើម្បីស្វែងរកលាភសក្ការៈរបស់ទ្រង់ ហើយនិងដើម្បីឱ្យពួកអ្នកដឹងគុណ។

៧៤-ហើយនៅថ្ងៃនោះ(ថ្ងៃបរលោក)អល់ឡោះនឹងហៅពួកគេ រួចទ្រង់មានបន្ទូលថាៈ តើគូកនរបស់យើង(ព្រះនានា)ដែលពួកអ្នកធ្លាប់បានអះអាងនោះនៅឯណា?

៧៥-ហើយ(នៅថ្ងៃបរលោក)យើងបានដកយកពីប្រជាជាតិនីមួយៗនូវសាក្សីម្នាក់(គឺអ្នកនាំសាររបស់ពួកគេ) រួចយើងមានបន្ទូលថាៈ ចូរពួកអ្នកនាំភស្តុតាងរបស់ពួកអ្នកមក(ចំពោះអ្វីដែលពួកអ្នកគោរពផ្សេងពីអល់ឡោះ) ពេលនោះពួកគេដឹងច្បាស់ថាៈ ភាពពិតគឺសម្រាប់អល់ឡោះ តែអ្វីដែលពួកគេធ្លាប់បានប្រឌិតភូតកុហកនោះបានបាត់បង់អស់ពីពួកគេ។

៧៦-ពិតប្រាកដណាស់ ករូនគឺស្ថិតក្នុងក្រុមរបស់មូសា តែគេបានរំលោភបំពានលើពួកទាំងនោះ។ ហើយយើងបានប្រទានឱ្យគេនូវកំណប់ទ្រព្យមួយចំនួនដែលកូនសោររបស់វាពិតជាធ្ងន់ក្នុងការលីចំពោះពួកបុរសៗដែលមានកំលាំងខ្លាំងក្លា ខណៈដែលក្រុមរបស់គេបាននិយាយទៅកាន់គេថាៈ ចូរអ្នកកុំសប្បាយហួសហេតុ(រមិលគុណ) ពិតប្រាកដណាស់ អល់ឡោះមិនស្រឡាញ់ពួកដែលសប្បាយ

قُلْ أَرَءَيْتُمْ إِن جَعَلَ ٱللَّهُ عَلَيْكُمُ ٱلَّيْلَ سَرْمَدًا إِلَىٰ يَوْمِ ٱلْقِيَـٰمَةِ مَنْ إِلَـٰهٌ غَيْرُ ٱللَّهِ يَأْتِيكُم بِضِيَآءٍ ۖ أَفَلَا تَسْمَعُونَ ﴿٧١﴾

قُلْ أَرَءَيْتُمْ إِن جَعَلَ ٱللَّهُ عَلَيْكُمُ ٱلنَّهَارَ سَرْمَدًا إِلَىٰ يَوْمِ ٱلْقِيَـٰمَةِ مَنْ إِلَـٰهٌ غَيْرُ ٱللَّهِ يَأْتِيكُم بِلَيْلٍ تَسْكُنُونَ فِيهِ ۖ أَفَلَا تُبْصِرُونَ ﴿٧٢﴾

وَمِن رَّحْمَتِهِۦ جَعَلَ لَكُمُ ٱلَّيْلَ وَٱلنَّهَارَ لِتَسْكُنُوا۟ فِيهِ وَلِتَبْتَغُوا۟ مِن فَضْلِهِۦ وَلَعَلَّكُمْ تَشْكُرُونَ ﴿٧٣﴾

وَيَوْمَ يُنَادِيهِمْ فَيَقُولُ أَيْنَ شُرَكَآءِىَ ٱلَّذِينَ كُنتُمْ تَزْعُمُونَ ﴿٧٤﴾

وَنَزَعْنَا مِن كُلِّ أُمَّةٍ شَهِيدًا فَقُلْنَا هَاتُوا۟ بُرْهَـٰنَكُمْ فَعَلِمُوٓا۟ أَنَّ ٱلْحَقَّ لِلَّهِ وَضَلَّ عَنْهُم مَّا كَانُوا۟ يَفْتَرُونَ ﴿٧٥﴾

۞ إِنَّ قَـٰرُونَ كَانَ مِن قَوْمِ مُوسَىٰ فَبَغَىٰ عَلَيْهِمْ ۖ وَءَاتَيْنَـٰهُ مِنَ ٱلْكُنُوزِ مَآ إِنَّ مَفَاتِحَهُۥ لَتَنُوٓأُ بِٱلْعُصْبَةِ أُو۟لِى ٱلْقُوَّةِ إِذْ قَالَ لَهُۥ قَوْمُهُۥ لَا تَفْرَحْ ۖ إِنَّ ٱللَّهَ لَا يُحِبُّ ٱلْفَرِحِينَ ﴿٧٦﴾

ហួសហេតុឡើយ ។

៧៧-ហើយចូរអ្នកស្វែងរកផលបុណ្យសម្រាប់ថ្ងៃបរលោកនូវអ្វីដែលអល់ឡោះបានប្រទានឱ្យអ្នកចុះ តែកុំភ្លេចនូវលាភសំណាងចំណែករបស់អ្នកនៅក្នុងលោកិយនេះឱ្យសោះ ។ ហើយចូរអ្នកសាងអំពើល្អដូចអ្វី ដែលអល់ឡោះបានធ្វើល្អចំពោះអ្នក ។ ហើយចូរអ្នកកុំស្វែងរកភាពវិនាសកម្មនៅលើផែនដីនេះឱ្យសោះ ។ ពិតប្រាកដណាស់ អល់ឡោះមិនស្រឡាញ់ពួកដែលបង្កវិនាសកម្មឡើយ ។

៧៨-គេ(ករូន) បាននិយាយថា: តាមពិត អ្វីដែលគេបានប្រទានវាឱ្យខ្ញុំ គឺដោយសារតែចំណេះវិជ្ជាដែលខ្ញុំមាន ។ តើគេមិនបានដឹងទេថា: ពិតប្រាកដណាស់ អល់ឡោះបានបំផ្លាញជាច្រើនជំនាន់មកហើយមុនរូបគេ ដែលគេ(ពួកជំនាន់មុន)ជាអ្នកខ្លាំង និងមានទ្រព្យសម្បត្តិច្រើនជាងរូបគេទៅទៀតនោះ? ហើយពួកដែលប្រព្រឹត្តបាបកម្មមិនត្រូវគេសួរអំពីបាបកម្មរបស់ពួកគេឡើយ ។

៧៩-រួចមកគេ(ករូន) ក៏បានដើរចេញទៅកាន់ក្រុមរបស់គេក្នុងលក្ខណៈតុបតែងយ៉ាងអំនួតរបស់គេ ។ ពួកដែលប្រាថ្នាតែការរស់នៅក្នុងលោកិយបាននិយាយថា: អ្ហា! ពួកយើងចង់បានដូចអ្វីដែលគេបានប្រទានឱ្យករូន ។ ពិតប្រាកដណាស់ គេមានសំណាងដ៏ធំធេង ។

៨០-រីឯបណ្ដាអ្នកដែលគេបានផ្ដល់ចំណេះដឹងឱ្យបាននិយាយថា: មហន្តរាយហើយពួកអ្នក! ផលបុណ្យរបស់អល់ឡោះគឺប្រសើរបំផុតសម្រាប់អ្នកដែលមានជំនឿ និងអ្នកដែលបានប្រព្រឹត្តអំពើល្អត្រឹមត្រូវ ។ ហើយគ្មាននរណាទទួលបានវា(ផលបុណ្យ)ឡើយ លើកលែងតែបណ្ដាអ្នកដែលអត់ធ្មត់ប៉ុណ្ណោះ ។

៨១-ដូច្នេះយើងក៏បានឱ្យដីលេបខ្លួនគេ(ករូន) និងលំនៅដ្ឋានរបស់គេ ។ ហើយគ្មានក្រុមណាមួយអាចជួយគេក្រៅពីអល់ឡោះឡើយ ។ ហើយពួកគេក៏មិនអាចជួយខ្លួនឯងបានដែរ ។

៨២-ហើយពួកដែលបានប្រាថ្នាចង់បានបុណ្យសក្តិរបស់គេ(ករូន) កាលពីថ្ងៃមុននោះចាប់ផ្ដើមនិយាយថា: តើអ្នកមិនបានដឹងទេថា

وَٱبۡتَغِ فِيمَآ ءَاتَىٰكَ ٱللَّهُ ٱلدَّارَ ٱلۡأٓخِرَةَۖ وَلَا تَنسَ نَصِيبَكَ مِنَ ٱلدُّنۡيَاۖ وَأَحۡسِن كَمَآ أَحۡسَنَ ٱللَّهُ إِلَيۡكَۖ وَلَا تَبۡغِ ٱلۡفَسَادَ فِي ٱلۡأَرۡضِۖ إِنَّ ٱللَّهَ لَا يُحِبُّ ٱلۡمُفۡسِدِينَ ٧٧

قَالَ إِنَّمَآ أُوتِيتُهُۥ عَلَىٰ عِلۡمٍ عِندِيٓۚ أَوَلَمۡ يَعۡلَمۡ أَنَّ ٱللَّهَ قَدۡ أَهۡلَكَ مِن قَبۡلِهِۦ مِنَ ٱلۡقُرُونِ مَنۡ هُوَ أَشَدُّ مِنۡهُ قُوَّةٗ وَأَكۡثَرُ جَمۡعٗاۚ وَلَا يُسۡـَٔلُ عَن ذُنُوبِهِمُ ٱلۡمُجۡرِمُونَ ٧٨

فَخَرَجَ عَلَىٰ قَوۡمِهِۦ فِي زِينَتِهِۦۖ قَالَ ٱلَّذِينَ يُرِيدُونَ ٱلۡحَيَوٰةَ ٱلدُّنۡيَا يَٰلَيۡتَ لَنَا مِثۡلَ مَآ أُوتِيَ قَٰرُونُ إِنَّهُۥ لَذُو حَظٍّ عَظِيمٖ ٧٩

وَقَالَ ٱلَّذِينَ أُوتُواْ ٱلۡعِلۡمَ وَيۡلَكُمۡ ثَوَابُ ٱللَّهِ خَيۡرٞ لِّمَنۡ ءَامَنَ وَعَمِلَ صَٰلِحٗاۚ وَلَا يُلَقَّىٰهَآ إِلَّا ٱلصَّٰبِرُونَ ٨٠

فَخَسَفۡنَا بِهِۦ وَبِدَارِهِ ٱلۡأَرۡضَ فَمَا كَانَ لَهُۥ مِن فِئَةٖ يَنصُرُونَهُۥ مِن دُونِ ٱللَّهِ وَمَا كَانَ مِنَ ٱلۡمُنتَصِرِينَ ٨١

وَأَصۡبَحَ ٱلَّذِينَ تَمَنَّوۡاْ مَكَانَهُۥ بِٱلۡأَمۡسِ يَقُولُونَ وَيۡكَأَنَّ ٱللَّهَ يَبۡسُطُ ٱلرِّزۡقَ لِمَن

ពិតប្រាកដណាស់ អល់ឡោះបើកទូលាយ និងដាក់កំណត់លាភសក្ការៈចំពោះអ្នកណាម្នាក់ក្នុងចំណោមខ្ញុំរបស់ទ្រង់ដែលទ្រង់មានចេតនា។ ប្រសិនបើអល់ឡោះមិនបានផ្តល់ក្តីមេត្តាចំពោះ(ពាក្យសំដី)ពួកយើងទេនោះ ទ្រង់ពិតជាពន្លិចពួកយើង(ទៅក្នុងដីដូចការូន)ជាមិនខាន។ ហើយអ្នកមិនបានដឹងទេថា ពិតប្រាកដណាស់ ពួកដែលប្រឆាំងនឹងអល់ឡោះមិនបានទទួលជោគជ័យឡើយ។

يَشَآءُ مِنۡ عِبَادِهِۦ وَيَقۡدِرُۖ لَوۡلَآ أَن مَّنَّ ٱللَّهُ عَلَيۡنَا لَخَسَفَ بِنَاۖ وَيۡكَأَنَّهُۥ لَا يُفۡلِحُ ٱلۡكَٰفِرُونَ ٨٢

៨៣-លំនៅដ្ឋាន(ឋានសួគ៌)នៅថ្ងៃបរលោកនោះ យើងនឹងផ្តល់វាសម្រាប់បណ្តាអ្នកដែលគ្មានបំណងក្រអឺតក្រទម និងបង្កវិនាសកម្មនៅលើផែនដីនេះ។ ហើយលទ្ធផលចុងក្រោយដ៏ល្អប្រពៃ(ឋានសួគ៌)នោះ គឺសម្រាប់បណ្តាអ្នកដែលកោតខ្លាចអល់ឡោះ។

تِلۡكَ ٱلدَّارُ ٱلۡأٓخِرَةُ نَجۡعَلُهَا لِلَّذِينَ لَا يُرِيدُونَ عُلُوّٗا فِي ٱلۡأَرۡضِ وَلَا فَسَادٗاۚ وَٱلۡعَٰقِبَةُ لِلۡمُتَّقِينَ ٨٣

៨៤-អ្នកណាហើយបាននាំមកនូវអំពើល្អ គេនឹងទទួលបានការតបស្នងល្អប្រសើរជាងអំពើនោះទៅទៀត(នៅថ្ងៃបរលោក)។ ចំណែកឯអ្នកណាហើយដែលបាននាំមកនូវអំពើអាក្រក់វិញ គឺគេមិនតបស្នងចំពោះពួកដែលប្រព្រឹត្តអំពើអាក្រក់ក្រៅពីអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តនោះឡើយ។

مَن جَآءَ بِٱلۡحَسَنَةِ فَلَهُۥ خَيۡرٞ مِّنۡهَاۖ وَمَن جَآءَ بِٱلسَّيِّئَةِ فَلَا يُجۡزَى ٱلَّذِينَ عَمِلُواْ ٱلسَّيِّـَٔاتِ إِلَّا مَا كَانُواْ يَعۡمَلُونَ ٨٤

៨៥-ពិតប្រាកដណាស់ អ្នកដែលបានបញ្ចុះគម្ពីរគួរអានឱ្យអ្នកគឺជាអ្នកដែលបញ្ជូនអ្នកទៅកាន់កន្លែងដើមវិញ(ម៉ាក្កះឬឋានសួគ៌)។ ចូរអ្នកពោលថាៈ ម្ចាស់របស់ខ្ញុំដឹងបំផុតចំពោះអ្នកណាដែលបាននាំមកនូវការចង្អុលបង្ហាញ និងអ្នកណាដែលគេស្ថិតក្នុងភាពវង្វេងយ៉ាងច្បាស់លាស់។

إِنَّ ٱلَّذِي فَرَضَ عَلَيۡكَ ٱلۡقُرۡءَانَ لَرَآدُّكَ إِلَىٰ مَعَادٖۚ قُل رَّبِّيٓ أَعۡلَمُ مَن جَآءَ بِٱلۡهُدَىٰ وَمَنۡ هُوَ فِي ضَلَٰلٖ مُّبِينٖ ٨٥

៨៦-ហើយអ្នកមិនធ្លាប់សង្ឃឹមថា គេនឹងបញ្ចុះគម្ពីរ(គួរអាន)ឱ្យអ្នកឡើយ។ ប៉ុន្តែដោយសារក្តីមេត្តាករុណាពីម្ចាស់របស់អ្នក(ទ្រង់បានបញ្ចុះវាឱ្យអ្នក)។ ដូច្នេះ ចូរអ្នកកុំធ្វើជាអ្នកជ្រោមជ្រែងដល់ពួកប្រឆាំងឱ្យសោះ។

وَمَا كُنتَ تَرۡجُوٓاْ أَن يُلۡقَىٰٓ إِلَيۡكَ ٱلۡكِتَٰبُ إِلَّا رَحۡمَةٗ مِّن رَّبِّكَۖ فَلَا تَكُونَنَّ ظَهِيرٗا لِّلۡكَٰفِرِينَ ٨٦

៨៧-ហើយចូរកុំឱ្យពួកគេ(ពួកមូស្ហរិគីន)រារាំងអ្នកពី(ការផ្សព្វផ្សាយ)អាយ៉ាត់ៗរបស់អល់ឡោះជាដាច់ខាត ក្រោយពេលដែលគេបានបញ្ចុះវាឱ្យអ្នកហើយនោះ។ ចូរអ្នកអំពាវនាវ(មនុស្សលោក)ទៅកាន់ម្ចាស់របស់អ្នក។ ហើយចូរកុំធ្វើឱ្យខ្លួនអ្នកស្ថិតក្នុងចំណោម

وَلَا يَصُدُّنَّكَ عَنۡ ءَايَٰتِ ٱللَّهِ بَعۡدَ إِذۡ أُنزِلَتۡ إِلَيۡكَۖ وَٱدۡعُ إِلَىٰ رَبِّكَۖ وَلَا تَكُونَنَّ مِنَ ٱلۡمُشۡرِكِينَ ٨٧

وَلَا تَدۡعُ مَعَ ٱللَّهِ إِلَٰهًا ءَاخَرَۘ لَآ إِلَٰهَ إِلَّا هُوَۚ كُلُّ شَيۡءٍ هَالِكٌ إِلَّا وَجۡهَهُۥۚ لَهُ ٱلۡحُكۡمُ وَإِلَيۡهِ تُرۡجَعُونَ ﴿٨٨﴾

ពួកដែលធ្វើស្ទុីរិកឱ្យសោះ ។

៨៨-ហើយចូរអ្នកកុំបួងសួងសុំម្ចាស់ណាផ្សេងរួមជាមួយអល់ឡោះឱ្យសោះ ព្រោះគ្មានម្ចាស់ណាផ្សេងដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ រាល់អ្វីៗទាំងអស់គឺនឹងត្រូវវិនាស លើកលែងតែវង់ភក្ត្រ[1] របស់ទ្រង់ប៉ុណ្ណោះ ។ ហើយការកាត់សេចក្តីគឺជាកម្មសិទ្ធិរបស់ទ្រង់ ។ ហើយចំពោះទ្រង់តែមួយគត់ដែលពួកអ្នកត្រូវវិលត្រឡប់ ។

## سورة العنكبوت

## ជំពូកអាល់អាំងកាពូត

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

الٓمٓ ﴿١﴾

១-អាលីហ្វ ឡាម មីម ។

أَحَسِبَ ٱلنَّاسُ أَن يُتۡرَكُوٓاْ أَن يَقُولُوٓاْ ءَامَنَّا وَهُمۡ لَا يُفۡتَنُونَ ﴿٢﴾

២-តើមនុស្សលោកគិតថា ពួកគេត្រូវគេបណ្តោយឱ្យនិយាយថា "ពួកយើងបានជឿហើយ"ដោយពួកគេមិនត្រូវគេសាកល្បងឬ?

وَلَقَدۡ فَتَنَّا ٱلَّذِينَ مِن قَبۡلِهِمۡۖ فَلَيَعۡلَمَنَّ ٱللَّهُ ٱلَّذِينَ صَدَقُواْ وَلَيَعۡلَمَنَّ ٱلۡكَٰذِبِينَ ﴿٣﴾

៣-ហើយជាការពិតណាស់ យើងបានសាកល្បងអ្នកជំនាន់មុនពួកគេរួចមកហើយ ។ ហើយអល់ឡោះដឹងបំផុតចំពោះបណ្តាអ្នកដែលទៀងត្រង់ និងដឹងបំផុតចំពោះពួកដែលភូតកុហក ។

أَمۡ حَسِبَ ٱلَّذِينَ يَعۡمَلُونَ ٱلسَّيِّـَٔاتِ أَن يَسۡبِقُونَاۚ سَآءَ مَا يَحۡكُمُونَ ﴿٤﴾

៤-ឬមួយអ្នកដែលប្រព្រឹត្តអំពើអាក្រក់គិតថា: ពួកគេអាចគេចផុតពីទារុណកម្មរបស់យើងឬ? អ្វីដែលពួកគេកំពុងវិនិច្ឆ័យនោះគឺអាក្រក់បំផុត ។

مَن كَانَ يَرۡجُواْ لِقَآءَ ٱللَّهِ فَإِنَّ أَجَلَ ٱللَّهِ لَأٓتٖۚ وَهُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ﴿٥﴾

៥-នរណាហើយដែលសង្ឃឹមថានឹងបានជួបអល់ឡោះ ពិតប្រាកដណាស់ ការសន្យារបស់អល់ឡោះនោះគឺនឹងមកដល់ជាមិនខាន ។ ហើយទ្រង់មហាឮ មហាដឹង ។

وَمَن جَٰهَدَ فَإِنَّمَا يُجَٰهِدُ لِنَفۡسِهِۦٓۚ إِنَّ ٱللَّهَ لَغَنِيٌّ عَنِ ٱلۡعَٰلَمِينَ ﴿٦﴾

៦-ហើយអ្នកណាបានតស៊ូ(ក្នុងមាគ៌ារបស់អល់ឡោះ) ពិតប្រាកដណាស់ គេគ្រាន់តែតស៊ូសម្រាប់ខ្លួនគេប៉ុណ្ណោះ ។ ពិតប្រាកដណាស់ អល់ឡោះមិនត្រូវការអ្វីពីភពទាំងអស់ឡើយ ។

---

១-ក្នុងវាក្យខណ្ឌនេះ គឺអល់ឡោះចង់លើកឡើងពីលក្ខណៈសម្បត្តិរបស់ទ្រង់ ។

៧-ហើយបណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ យើងពិតជានឹងលុបបំបាត់អំពើអាក្រក់របស់ពួកគេចេញពីពួកគេ ។ ហើយយើងពិតជានឹងតបស្នងឱ្យពួកគេប្រសើរជាងអ្វីដែលពួកគេធ្លាប់បានសាងទៅទៀត ។

وَٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ لَنُكَفِّرَنَّ عَنۡهُمۡ سَيِّـَٔاتِهِمۡ وَلَنَجۡزِيَنَّهُمۡ أَحۡسَنَ ٱلَّذِي كَانُواْ يَعۡمَلُونَ ٧

៨-ហើយយើងបានបង្គាប់មនុស្សលោកឱ្យធ្វើល្អចំពោះឪពុកម្តាយរបស់គេ ។ តែប្រសិនបើគាត់ទាំងពីរបង្ខំអ្នកឱ្យធ្វើស្ហ៊ីរកចំពោះយើងនូវអ្វីដែលអ្នកគ្មានចំណេះដឹងនឹងវាទេនោះ ចូរអ្នកកុំប្រតិបត្តិតាមពួកគាត់ទាំងពីរឱ្យសោះ ។ កន្លែងវិលត្រឡប់របស់ពួកអ្នក គឺមកកាន់យើងតែមួយគត់ ។ ហើយយើងនឹងប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត ។

وَوَصَّيۡنَا ٱلۡإِنسَٰنَ بِوَٰلِدَيۡهِ حُسۡنٗاۖ وَإِن جَٰهَدَاكَ لِتُشۡرِكَ بِي مَا لَيۡسَ لَكَ بِهِۦ عِلۡمٞ فَلَا تُطِعۡهُمَآۚ إِلَيَّ مَرۡجِعُكُمۡ فَأُنَبِّئُكُم بِمَا كُنتُمۡ تَعۡمَلُونَ ٨

៩-ហើយបណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ យើងពិតជានឹងបញ្ចូលពួកគេទៅក្នុងចំណោមអ្នកដែលត្រឹមត្រូវ ។

وَٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ لَنُدۡخِلَنَّهُمۡ فِي ٱلصَّٰلِحِينَ ٩

១០-ហើយមានមនុស្សលោកមួយចំនួននិយាយថាៈ យើងបានជឿលើអល់ឡោះហើយ ។ តែនៅពេលដែលគេទទួលរងនូវការឈឺចាប់ដោយសារ( មានជំនឿលើ) អល់ឡោះនោះ គេក៏បានចាត់ទុកការធ្វើបាបរបស់មនុស្សលោកដូចជាទារុណកម្មរបស់អល់ឡោះដែរ ។ ហើយប្រសិនបើជំនួយពីម្ចាស់របស់អ្នក( មូហាំម៉ាត់) បានមកដល់នោះ ពួកគេពិតជានឹងនិយាយថាៈ ពិតប្រាកដណាស់ ពួកយើងធ្លាប់នៅជាមួយពួកអ្នកដែរ( ក្នុងសាសនាអ៊ិស្លាមនិងជួយគ្នាទៅវិញទៅមក) ។ តើមិនមែនអល់ឡោះទេឬដែលដឹងបំផុតនូវអ្វីដែលមាននៅក្នុងចិត្តនៃសត្វលោកទាំងអស់នោះ?

وَمِنَ ٱلنَّاسِ مَن يَقُولُ ءَامَنَّا بِٱللَّهِ فَإِذَآ أُوذِيَ فِي ٱللَّهِ جَعَلَ فِتۡنَةَ ٱلنَّاسِ كَعَذَابِ ٱللَّهِ وَلَئِن جَآءَ نَصۡرٞ مِّن رَّبِّكَ لَيَقُولُنَّ إِنَّا كُنَّا مَعَكُمۡۚ أَوَلَيۡسَ ٱللَّهُ بِأَعۡلَمَ بِمَا فِي صُدُورِ ٱلۡعَٰلَمِينَ ١٠

១១-ហើយអល់ឡោះដឹងយ៉ាងច្បាស់ចំពោះបណ្តាអ្នកដែលមានជំនឿ និងដឹងយ៉ាងច្បាស់ចំពោះពួកពុតត្បុត ។

وَلَيَعۡلَمَنَّ ٱللَّهُ ٱلَّذِينَ ءَامَنُواْ وَلَيَعۡلَمَنَّ ٱلۡمُنَٰفِقِينَ ١١

១២-ហើយពួកដែលប្រឆាំងបាននិយាយទៅកាន់បណ្តាអ្នកដែលមានជំនឿថាៈ ចូរពួកអ្នកធ្វើតាមមាគ៌ារបស់ពួកយើងហើយយើងនឹងទទួលខុសត្រូវនូវកំហុសឆ្គងទាំងឡាយរបស់ពួកអ្នក ខណៈដែលពួកគេមិនមែនជាអ្នកដែលអាចទទួលខុសត្រូវអំពីកំហុសឆ្គងរបស់

وَقَالَ ٱلَّذِينَ كَفَرُواْ لِلَّذِينَ ءَامَنُواْ ٱتَّبِعُواْ سَبِيلَنَا وَلۡنَحۡمِلۡ خَطَٰيَٰكُمۡ وَمَا هُم بِحَٰمِلِينَ مِنۡ خَطَٰيَٰهُم مِّن شَيۡءٍۖ إِنَّهُمۡ

لَكَٰذِبُونَ ١٢

ពួកគេបន្តិចណាឡើយនោះ។ ពិតប្រាកដណាស់ ពួកគេគឺជាពួកដែលភូតកុហក។

وَلَيَحۡمِلُنَّ أَثۡقَالَهُمۡ وَأَثۡقَالٗا مَّعَ أَثۡقَالِهِمۡۖ وَلَيُسۡـَٔلُنَّ يَوۡمَ ٱلۡقِيَٰمَةِ عَمَّا كَانُواْ يَفۡتَرُونَ ١٣

១៣-ហើយពួកគេពិតជានឹងរែកពន់បាបកម្មទាំងឡាយរបស់ពួកគេ និងបាបកម្មផ្សេងទៀតជាមួយនឹងបាបកម្មរបស់ពួកគេ។ ហើយពួកគេពិតជានឹងត្រូវគេសួរនាថ្ងៃបរលោកអំពីអ្វីដែលពួកគេធ្លាប់បានប្រឌិតភូតកុហក។

وَلَقَدۡ أَرۡسَلۡنَا نُوحًا إِلَىٰ قَوۡمِهِۦ فَلَبِثَ فِيهِمۡ أَلۡفَ سَنَةٍ إِلَّا خَمۡسِينَ عَامٗا فَأَخَذَهُمُ ٱلطُّوفَانُ وَهُمۡ ظَٰلِمُونَ ١٤

១៤-ហើយជាការពិតណាស់ យើងបានបញ្ជូនណូហទៅកាន់ក្រុមរបស់គេ ហើយគេបានរស់នៅជាមួយពួកគេអស់រយៈពេលមួយពាន់ឆ្នាំខ្វះតែហាសិបឆ្នាំប៉ុណ្ណោះ(៩៥០ឆ្នាំ)។ ក្រោយមកទឹកជំនន់បានឆក់យកពួកគេ ខណៈដែលពួកគេជាពួកដែលបំពាន។

فَأَنجَيۡنَٰهُ وَأَصۡحَٰبَ ٱلسَّفِينَةِ وَجَعَلۡنَٰهَآ ءَايَةٗ لِّلۡعَٰلَمِينَ ١٥

១៥-ពេលនោះយើងក៏បានសង្គ្រោះគេនិងអ្នកនៅលើនាវាទាំងអស់(ឱ្យរួចផុតពីគ្រោះមហន្តរាយនេះ) ហើយយើងបានបង្កើតរឿងនេះជាមេរៀនមួយសម្រាប់ពិភពលោកទាំងមូល។

وَإِبۡرَٰهِيمَ إِذۡ قَالَ لِقَوۡمِهِ ٱعۡبُدُواْ ٱللَّهَ وَٱتَّقُوهُۖ ذَٰلِكُمۡ خَيۡرٞ لَّكُمۡ إِن كُنتُمۡ تَعۡلَمُونَ ١٦

១៦-ហើយ(ចូរចងចាំ)រឿងអ៊ីព្រហ៊ីម នៅពេលដែលគេបានពោលទៅកាន់ក្រុមរបស់គេថាៈ ចូរពួកអ្នកគោរពសក្ការៈទៅចំពោះអល់ឡោះ និងកោតខ្លាចចំពោះទ្រង់។ ទាំងនោះគឺប្រសើរសម្រាប់ពួកអ្នក ប្រសិនបើពួកអ្នកបានដឹង។

إِنَّمَا تَعۡبُدُونَ مِن دُونِ ٱللَّهِ أَوۡثَٰنٗا وَتَخۡلُقُونَ إِفۡكًاۚ إِنَّ ٱلَّذِينَ تَعۡبُدُونَ مِن دُونِ ٱللَّهِ لَا يَمۡلِكُونَ لَكُمۡ رِزۡقٗا فَٱبۡتَغُواْ عِندَ ٱللَّهِ ٱلرِّزۡقَ وَٱعۡبُدُوهُ وَٱشۡكُرُواْ لَهُۥٓۖ إِلَيۡهِ تُرۡجَعُونَ ١٧

១៧-ជាការពិតណាស់ អ្វីដែលពួកអ្នកគោរពសក្ការៈក្រៅពីអល់ឡោះនោះ គឺគ្រាន់តែជារូបសំណាក ហើយពួកអ្នកបង្កើតឡើងគ្រាន់តែជាការបោកប្រាស់ប៉ុណ្ណោះ។ ពិតប្រាកដណាស់ ពួក(ព្រះនានា)ដែលពួកអ្នកកំពុងគោរពសក្ការៈក្រៅពីអល់ឡោះនោះគឺពួកវាមិនអាចផ្តល់លាភសក្ការៈដល់ពួកអ្នកបានឡើយ។ ដូច្នេះ ចូរពួកអ្នកស្វែងរកលាភសក្ការៈពីអល់ឡោះ និងត្រូវគោរពសក្ការៈចំពោះទ្រង់ ហើយនិងត្រូវដឹងគុណចំពោះទ្រង់។ ចំពោះទ្រង់តែមួយគត់ដែលពួកអ្នកត្រូវវិលត្រឡប់។

وَإِن تُكَذِّبُواْ فَقَدۡ كَذَّبَ أُمَمٞ مِّن قَبۡلِكُمۡۖ وَمَا عَلَى ٱلرَّسُولِ إِلَّا ٱلۡبَلَٰغُ

១៨-តែប្រសិនបើពួកអ្នកបដិសេធ(នឹងមូហាំម៉ាត់)វិញនោះ ពិតប្រាកដណាស់ប្រជាជាតិជំនាន់មុនពួកអ្នកក៏បានបដិសេធ(នឹងអ្នកនាំសាររបស់ពួកគេ)ដែរ។ ហើយតួនាទីរបស់អ្នកនាំសារគ្មានអ្វី

ٱلْمُبِينُ ﴿١٨﴾

ក្រៅពីការផ្សព្វផ្សាយដ៏ច្បាស់លាស់នោះឡើយ ។

أَوَلَمْ يَرَوْا۟ كَيْفَ يُبْدِئُ ٱللَّهُ ٱلْخَلْقَ ثُمَّ يُعِيدُهُۥٓ ۚ إِنَّ ذَٰلِكَ عَلَى ٱللَّهِ يَسِيرٌ ﴿١٩﴾

១៩-តើពួកគេមិនបានឃើញទេថា អល់ឡោះចាប់ផ្តើមបង្កើតសត្វលោក បន្ទាប់មកទ្រង់នឹងបង្កើតវាសាជាថ្មីម្តងទៀត( នៅថ្ងៃបរលោក) យ៉ាងដូចម្តេច? ពិតប្រាកដណាស់ រឿងទាំងនោះគឺងាយបំផុតសម្រាប់អល់ឡោះ ។

قُلْ سِيرُوا۟ فِى ٱلْأَرْضِ فَٱنظُرُوا۟ كَيْفَ بَدَأَ ٱلْخَلْقَ ۚ ثُمَّ ٱللَّهُ يُنشِئُ ٱلنَّشْأَةَ ٱلْءَاخِرَةَ ۚ إِنَّ ٱللَّهَ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ﴿٢٠﴾

២០-ចូរអ្នក( មូហាំម៉ាត់) ពោលថា: ចូរពួកអ្នកធ្វើដំណើរនៅលើផែនដីនេះ ហើយចូរពួកអ្នកមើលចុះថា តើទ្រង់បានចាប់ផ្តើមបង្កើតសត្វលោកយ៉ាងដូចម្តេច? បន្ទាប់មកអល់ឡោះបង្កើតម្តងទៀតនៅថ្ងៃបរលោក ។ ពិតប្រាកដណាស់ អល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

يُعَذِّبُ مَن يَشَآءُ وَيَرْحَمُ مَن يَشَآءُ ۖ وَإِلَيْهِ تُقْلَبُونَ ﴿٢١﴾

២១-ទ្រង់ធ្វើទារុណកម្មលើអ្នកណាដែលទ្រង់មានចេតនា ហើយទ្រង់ក៏អាណិតស្រឡាញ់អ្នកណាដែលទ្រង់មានចេតនាដែរ ។ ហើយចំពោះទ្រង់តែមួយគត់ដែលពួកអ្នកត្រូវវិលត្រឡប់ ។

وَمَآ أَنتُم بِمُعْجِزِينَ فِى ٱلْأَرْضِ وَلَا فِى ٱلسَّمَآءِ ۖ وَمَا لَكُم مِّن دُونِ ٱللَّهِ مِن وَلِىٍّ وَلَا نَصِيرٍ ﴿٢٢﴾

២២-ហើយពួកអ្នកមិនអាចគេចផុត( ពីទារុណកម្មរបស់អល់ឡោះ) នៅលើផែនដី ហើយក៏មិនអាចគេចផុតដែរនៅលើមេឃ ។ ហើយពួកអ្នកគ្មានអ្នកគាំពារនិងអ្នកជួយក្រៅពីអល់ឡោះឡើយ ។

وَٱلَّذِينَ كَفَرُوا۟ بِـَٔايَٰتِ ٱللَّهِ وَلِقَآئِهِۦٓ أُو۟لَٰٓئِكَ يَئِسُوا۟ مِن رَّحْمَتِى وَأُو۟لَٰٓئِكَ لَهُمْ عَذَابٌ أَلِيمٌ ﴿٢٣﴾

២៣-ហើយពួកដែលបានបដិសេធនឹងអាយ៉ាត់ៗរបស់អល់ឡោះនិងការជួបនឹងទ្រង់នោះ ពួកទាំងនោះគឺអស់សង្ឃឹមពីក្តីមេត្តាករុណារបស់យើង ។ ហើយពួកទាំងនោះនឹងទទួលទារុណកម្មយ៉ាងឈឺចាប់ ។

فَمَا كَانَ جَوَابَ قَوْمِهِۦٓ إِلَّآ أَن قَالُوا۟ ٱقْتُلُوهُ أَوْ حَرِّقُوهُ فَأَنجَىٰهُ ٱللَّهُ مِنَ ٱلنَّارِ ۚ إِنَّ فِى ذَٰلِكَ لَءَايَٰتٍ لِّقَوْمٍ يُؤْمِنُونَ ﴿٢٤﴾

២៤-ហើយការឆ្លើយតបនៃក្រុមរបស់គាត់( អ៊ីព្រហ៊ីម) គ្មានអ្វីក្រៅពីពាក្យសម្តីរបស់ពួកគេថា: ចូរពួកអ្នកសម្លាប់គេ ឬដុតគេនោះឡើយ ។ ពេលនោះអល់ឡោះក៏បានសង្គ្រោះគាត់ឱ្យរួចផុតពីភ្លើងនោះ ។ ពិតប្រាកដណាស់ នៅក្នុងរឿងទាំងនោះគឺជាភស្តុតាងៗសម្រាប់ក្រុមដែលមានជំនឿ ។

وَقَالَ إِنَّمَا ٱتَّخَذْتُم مِّن دُونِ ٱللَّهِ أَوْثَٰنًا مَّوَدَّةَ

២៥-ហើយគាត់( អ៊ីព្រហ៊ីម) បានពោលថា: ពិតប្រាកដណាស់ រូប

بَيۡنِكُمۡ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَاۖ ثُمَّ يَوۡمَ ٱلۡقِيَٰمَةِ
يَكۡفُرُ بَعۡضُكُم بِبَعۡضٖ وَيَلۡعَنُ
بَعۡضُكُم بَعۡضٗا وَمَأۡوَىٰكُمُ ٱلنَّارُ وَمَا لَكُم
مِّن نَّٰصِرِينَ ﴿٢٥﴾

សំណាកដែលពួកអ្នកបានយកមកគោរពសក្ការៈផ្សេងពីអល់ឡោះនោះ គឺដើម្បីធ្វើជាការស្និទ្ធស្នាលរវាងពួកអ្នកក្នុងជីវិតលោកិយប៉ុណ្ណោះ ។ ក្រោយមកនៅថ្ងៃបរលោក ពួកអ្នកនឹងបដិសេធមិនទទួលស្គាល់គ្នា ហើយពួកអ្នកក៏ដាក់បណ្តាសាឱ្យគ្នាដែរ ។ ហើយទីកន្លែងរបស់ពួកអ្នកគឺនរក ហើយពួកអ្នកគ្មានអ្នកណាជួយឡើយ ។

۞ فَـَٔامَنَ لَهُۥ لُوطٞۘ وَقَالَ إِنِّي مُهَاجِرٌ إِلَىٰ رَبِّيٓۖ
إِنَّهُۥ هُوَ ٱلۡعَزِيزُ ٱلۡحَكِيمُ ﴿٢٦﴾

២៦-ពេលនោះលូតក៏បានជឿលើគាត់( អ៊ីព្រហ៊ីម) ។ហើយគាត់បានពោលថា: ខ្ញុំនឹងភៀសខ្លួនទៅរក( មាគ៌ា) ម្ចាស់របស់ខ្ញុំ ។ ពិតប្រាកដណាស់ទ្រង់ជាម្ចាស់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

وَوَهَبۡنَا لَهُۥٓ إِسۡحَٰقَ وَيَعۡقُوبَ وَجَعَلۡنَا فِي
ذُرِّيَّتِهِ ٱلنُّبُوَّةَ وَٱلۡكِتَٰبَ وَءَاتَيۡنَٰهُ أَجۡرَهُۥ
فِي ٱلدُّنۡيَاۖ وَإِنَّهُۥ فِي ٱلۡأٓخِرَةِ لَمِنَ
ٱلصَّٰلِحِينَ ﴿٢٧﴾

២៧-ហើយយើងបានប្រទានអ៊ីស្ហាកនិងយ៉ាក់កូបឱ្យគាត់ ។ហើយយើងបានបង្កើតនៅក្នុងពូជពង្សរបស់គាត់ជាណាពី៍ និង( យើងបានបញ្ចុះ) គម្ពីរ ។ ហើយយើងបានប្រទានឱ្យគាត់នូវរង្វាន់របស់គាត់នៅក្នុងលោកិយនេះ ( ភរិយា និងកូនចៅ) ។ ហើយពិតប្រាកដណាស់នៅថ្ងៃបរលោកគាត់នឹងស្ថិតក្នុងចំណោមអ្នកដែលល្អត្រឹមត្រូវ ។

وَلُوطًا إِذۡ قَالَ لِقَوۡمِهِۦٓ إِنَّكُمۡ لَتَأۡتُونَ
ٱلۡفَٰحِشَةَ مَا سَبَقَكُم بِهَا مِنۡ أَحَدٖ مِّنَ
ٱلۡعَٰلَمِينَ ﴿٢٨﴾

២៨-ហើយ( ចូរចងចាំ) រឿងរបស់លូត នៅពេលដែលគាត់បានពោលទៅកាន់ក្រុមរបស់គាត់ថា: ពិតប្រាកដណាស់ ពួកអ្នកកំពុងប្រព្រឹត្តអំពើអសីលធមិបំផុត ដែលគ្មានអ្នកណាម្នាក់ពីមុនពួកអ្នកធ្លាប់ប្រព្រឹត្តវានៅក្នុងលោកិយនេះឡើយ ។

أَئِنَّكُمۡ لَتَأۡتُونَ ٱلرِّجَالَ وَتَقۡطَعُونَ ٱلسَّبِيلَ
وَتَأۡتُونَ فِي نَادِيكُمُ ٱلۡمُنكَرَۖ فَمَا
كَانَ جَوَابَ قَوۡمِهِۦٓ إِلَّآ أَن قَالُواْ ٱئۡتِنَا
بِعَذَابِ ٱللَّهِ إِن كُنتَ مِنَ ٱلصَّٰدِقِينَ ﴿٢٩﴾

២៩-តើហេតុអ្វីបានជាពួកអ្នករួមភេទជាមួយនឹងបុរសដូចគ្នា និងឆក់ប្លន់អ្នកដំណើរ ហើយនិងប្រព្រឹត្តអំពើអាក្រក់នៅកន្លែងជួបជុំរបស់ពួកអ្នកដូច្នេះ? ហើយចម្លើយនៃក្រុមរបស់គាត់( លូត) គ្មានអ្វីក្រៅពីនិយាយថា: ចូរអ្នកនាំទារុណកម្មរបស់អល់ឡោះឱ្យពួកយើងមក ប្រសិនបើអ្នកស្ថិតក្នុងចំណោមអ្នកដែលនិយាយត្រឹមត្រូវមែននោះ ។

قَالَ رَبِّ ٱنصُرۡنِي عَلَى ٱلۡقَوۡمِ
ٱلۡمُفۡسِدِينَ ﴿٣٠﴾

៣០-គាត់បានបួងសួងសុំថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាជួយខ្ញុំឱ្យមានជ័យជំនះលើក្រុមដែលបង្កវិនាសកម្ម( នៅលើផែនដីនេះ) ផង ។

وَلَمَّا جَآءَتۡ رُسُلُنَآ إِبۡرَٰهِيمَ بِٱلۡبُشۡرَىٰ قَالُوٓاْ إِنَّا مُهۡلِكُوٓاْ أَهۡلِ هَٰذِهِ ٱلۡقَرۡيَةِۖ إِنَّ أَهۡلَهَا كَانُواْ ظَٰلِمِينَ ﴿٣١﴾

៣១-ហើយនៅពេលដែលអ្នកនាំសារ(ម៉ាឡាអ៊ីកាត់)របស់យើងបាននាំដំណឹងរីករាយ[1] មកប្រាប់អ៊ីព្រហ៊ីម ពួកគេបានប្រាប់ថាៈ ពិតប្រាកដណាស់ ពួកយើងគឺជាអ្នកដែលបំផ្លាញអ្នកភូមិស្រុកនេះ។ ពិតប្រាកដណាស់ អ្នកភូមិស្រុកនេះជាពួកដែលបានបំពាន។

قَالَ إِنَّ فِيهَا لُوطٗاۚ قَالُواْ نَحۡنُ أَعۡلَمُ بِمَن فِيهَاۖ لَنُنَجِّيَنَّهُۥ وَأَهۡلَهُۥٓ إِلَّا ٱمۡرَأَتَهُۥ كَانَتۡ مِنَ ٱلۡغَٰبِرِينَ ﴿٣٢﴾

៣២-គាត់(អ៊ីព្រហ៊ីម)បានពោលថាៈ ពិតប្រាកដណាស់ លូតនៅក្នុងភូមិស្រុកនោះ។ ពួកគេបានតបវិញថាៈ ពួកយើងដឹងបំផុតថាអ្នកណានៅក្នុងនោះ។ ពួកយើងពិតជានឹងសង្គ្រោះគេ(លូត) និងក្រុមគ្រួសាររបស់គេ លើកលែងតែប្រពន្ធរបស់គេប៉ុណ្ណោះ ដែលស្ថិតក្នុងចំណោមពួកដែលត្រូវទារុណកម្ម។

وَلَمَّآ أَن جَآءَتۡ رُسُلُنَا لُوطٗا سِيٓءَ بِهِمۡ وَضَاقَ بِهِمۡ ذَرۡعٗا وَقَالُواْ لَا تَخَفۡ وَلَا تَحۡزَنۡۖ إِنَّا مُنَجُّوكَ وَأَهۡلَكَ إِلَّا ٱمۡرَأَتَكَ كَانَتۡ مِنَ ٱلۡغَٰبِرِينَ ﴿٣٣﴾

៣៣-ហើយនៅពេលដែលអ្នកនាំសាររបស់យើង(ម៉ាឡាអ៊ីកាត់) បានមកជួបលូត គាត់មានការព្រួយបារម្ភ និងតឹងទ្រូងដោយសារពួកគេ។ ហើយពួកគេបានពោលថាៈ ចូរអ្នកកុំភ័យខ្លាច និងកុំព្រួយបារម្ភឱ្យសោះ។ ពិតប្រាកដណាស់ ពួកយើងជាអ្នកជួយសង្គ្រោះអ្នក និងក្រុមគ្រួសាររបស់អ្នក លើកលែងតែប្រពន្ធរបស់អ្នកប៉ុណ្ណោះ ដែលស្ថិតក្នុងចំណោមពួកដែលត្រូវទារុណកម្ម។

إِنَّا مُنزِلُونَ عَلَىٰٓ أَهۡلِ هَٰذِهِ ٱلۡقَرۡيَةِ رِجۡزٗا مِّنَ ٱلسَّمَآءِ بِمَا كَانُواْ يَفۡسُقُونَ ﴿٣٤﴾

៣៤-ពិតប្រាកដណាស់ យើង(អល់ឡោះ)ជាអ្នកបញ្ចុះទារុណកម្មពីលើមេឃទៅលើអ្នកភូមិស្រុកនេះ ដោយសារតែអ្វីដែលពួកគេធ្លាប់ល្មើសនឹងបទបញ្ជារបស់អល់ឡោះ។

وَلَقَد تَّرَكۡنَا مِنۡهَآ ءَايَةَۢ بَيِّنَةٗ لِّقَوۡمٖ يَعۡقِلُونَ ﴿٣٥﴾

៣៥-ហើយជាការពិតណាស់ យើងបានបន្សល់ទុកពីភូមិស្រុកនេះ ជាភស្តុតាងមួយដ៏ច្បាស់លាស់សម្រាប់ក្រុមដែលចេះគិតពិចារណា។

وَإِلَىٰ مَدۡيَنَ أَخَاهُمۡ شُعَيۡبٗا فَقَالَ يَٰقَوۡمِ ٱعۡبُدُواْ ٱللَّهَ وَٱرۡجُواْ ٱلۡيَوۡمَ ٱلۡأٓخِرَ وَلَا تَعۡثَوۡاْ فِي ٱلۡأَرۡضِ مُفۡسِدِينَ ﴿٣٦﴾

៣៦-ហើយ(យើងបានបញ្ជូន)ស្ហ្វអែបទៅកាន់ម៉ាទយ៉ាន់ដែលជាបងប្អូនរបស់ពួកគេ ហើយគាត់បានពោលថាៈ ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ និងសង្ឃឹម(ថានឹងទទួលបានការតបស្នងល្អ)នៅថ្ងៃបរលោកចុះ។ ហើយចូរពួកអ្នកកុំបង្កវិនាសកម្មនៅលើផែនដីនេះឱ្យសោះ។

---

១-អល់ឡោះនឹងប្រទានឱ្យអ៊ីព្រហ៊ីមនូវអ៊ីស្ហាក និងយ៉ាកកូប។

៣៧-ហើយពួកគេបានបដិសេធនឹងគាត់(ស្ហ៊ូអែប) ពេលនោះការរញ្ជួយដីបានឆក់យកជីវិតពួកគេ និងធ្វើឱ្យពួកគេស្លាប់នៅក្នុងផ្ទះរបស់ពួកគេ។

៣៨-ហើយ(យើងបានបំផ្លាញ)ក្រុមអាដ និងក្រុមសាមូដដែលវាពិតជាបានបញ្ជាក់យ៉ាងច្បាស់ចំពោះពួកអ្នកអំពីលំនៅដ្ឋានទាំងឡាយរបស់ពួកគេ។ ហើយស្ហៃតនបានលំអចំពោះពួកគេនូវទង្វើ(អាក្រក់)របស់ពួកគេ និងវាបានរារាំងពួកគេអំពីមាគ៌ា(របស់អល់ឡោះ)ខណៈដែលពួកគេជាអ្នកដឹងច្បាស់ហើយនោះ។

៣៩-ហើយ(យើងបានបំផ្លាញ)ការូន និងហ្វៀរអោន និងហាម៉ាន។ ហើយជាការពិតណាស់ មូសាបាននាំមកឱ្យពួកគេនូវភស្តុតាងយ៉ាងច្បាស់លាស់ តែពួកគេបែរជាក្រអឺតក្រទមនៅលើផែនដីនេះទៅវិញ។ ហើយពួកគេមិនអាចគេចផុត(ពីទារុណកម្មរបស់យើង)បានឡើយ។

៤០-ដូច្នេះ យើងបានបំផ្លាញក្រុមនីមួយៗដោយសារតែបាបកម្មរបស់គេ។ ហើយក្នុងចំណោមពួកគេមានអ្នកខ្លះយើងបានបញ្ជូនភ្លៀងថ្មទៅលើគេ និងអ្នកខ្លះក្នុងចំណោមពួកគេត្រូវសម្រែកយ៉ាងខ្លាំងឆក់យកគេ ហើយអ្នកខ្លះក្នុងចំណោមពួកគេយើងបានធ្វើឱ្យដីស្រូបយកជីវិតរបស់គេ ហើយមានអ្នកខ្លះទៀតក្នុងចំណោមពួកគេយើងបានពន្លិចក្នុងទឹក។ ហើយអល់ឡោះមិនចង់ធ្វើបាបពួកគេឡើយ តែពួកគេទេដែលបានធ្វើបាបខ្លួនឯងនោះ។

៤១-ការប្រៀបធៀបនៃពួកដែលបានយកអ្នកគាំពារផ្សេងពីអល់ឡោះនោះ ប្រៀបដូចទៅនឹងសត្វពីងពាងដែលបានធ្វើសំបុក។ ហើយពិតប្រាកដណាស់ សំបុកដែលអន់ជាងគេបំផុតនោះគឺសំបុកពីងពាងប្រសិនបើពួកគេបានដឹង។

៤២-ពិតប្រាកដណាស់ អល់ឡោះដឹងបំផុតនូវអ្វីក៏ដោយដែលពួកគេបួងសួងសុំផ្សេងពីទ្រង់នោះ។ ហើយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត។

فَكَذَّبُوهُ فَأَخَذَتۡهُمُ ٱلرَّجۡفَةُ فَأَصۡبَحُواْ
فِي دَارِهِمۡ جَٰثِمِينَ ٣٧
وَعَادٗا وَثَمُودَاْ وَقَد تَّبَيَّنَ لَكُم مِّن
مَّسَٰكِنِهِمۡۖ وَزَيَّنَ لَهُمُ ٱلشَّيۡطَٰنُ
أَعۡمَٰلَهُمۡ فَصَدَّهُمۡ عَنِ ٱلسَّبِيلِ وَكَانُواْ
مُسۡتَبۡصِرِينَ ٣٨
وَقَٰرُونَ وَفِرۡعَوۡنَ وَهَٰمَٰنَۖ وَلَقَدۡ
جَآءَهُم مُّوسَىٰ بِٱلۡبَيِّنَٰتِ فَٱسۡتَكۡبَرُواْ فِي
ٱلۡأَرۡضِ وَمَا كَانُواْ سَٰبِقِينَ ٣٩
فَكُلًّا أَخَذۡنَا بِذَنۢبِهِۦۖ فَمِنۡهُم مَّنۡ أَرۡسَلۡنَا
عَلَيۡهِ حَاصِبٗا وَمِنۡهُم مَّنۡ أَخَذَتۡهُ ٱلصَّيۡحَةُ
وَمِنۡهُم مَّنۡ خَسَفۡنَا بِهِ ٱلۡأَرۡضَ وَمِنۡهُم
مَّنۡ أَغۡرَقۡنَاۚ وَمَا كَانَ ٱللَّهُ لِيَظۡلِمَهُمۡ
وَلَٰكِن كَانُوٓاْ أَنفُسَهُمۡ يَظۡلِمُونَ ٤٠
مَثَلُ ٱلَّذِينَ ٱتَّخَذُواْ مِن دُونِ ٱللَّهِ أَوۡلِيَآءَ
كَمَثَلِ ٱلۡعَنكَبُوتِ ٱتَّخَذَتۡ بَيۡتٗاۖ وَإِنَّ
أَوۡهَنَ ٱلۡبُيُوتِ لَبَيۡتُ ٱلۡعَنكَبُوتِۖ لَوۡ
كَانُواْ يَعۡلَمُونَ ٤١
إِنَّ ٱللَّهَ يَعۡلَمُ مَا يَدۡعُونَ مِن دُونِهِۦ مِن
شَيۡءٖۚ وَهُوَ ٱلۡعَزِيزُ ٱلۡحَكِيمُ ٤٢

وَتِلْكَ ٱلْأَمْثَـٰلُ نَضْرِبُهَا لِلنَّاسِ ۖ وَمَا يَعْقِلُهَآ إِلَّا ٱلْعَـٰلِمُونَ ﴿٤٣﴾

៤៣-ហើយការប្រៀបធៀបទាំងនោះ យើងបានលើកវាឡើងជាឧទាហរណ៍សម្រាប់មនុស្សលោក ។ ហើយគ្មាននរណាអាចយល់ពីវាក្រៅពីអ្នកដែលចេះដឹងនោះឡើយ ។

خَلَقَ ٱللَّهُ ٱلسَّمَـٰوَٰتِ وَٱلْأَرْضَ بِٱلْحَقِّ ۚ إِنَّ فِى ذَٰلِكَ لَـَٔايَةً لِّلْمُؤْمِنِينَ ﴿٤٤﴾

៤៤-អល់ឡោះបានបង្កើតមេឃជាច្រើនជាន់ និងផែនដីដោយពិតប្រាកដ ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះជាភស្តុតាងមួយសម្រាប់បណ្តាអ្នកដែលមានជំនឿ ។

ٱتْلُ مَآ أُوحِىَ إِلَيْكَ مِنَ ٱلْكِتَـٰبِ وَأَقِمِ ٱلصَّلَوٰةَ ۖ إِنَّ ٱلصَّلَوٰةَ تَنْهَىٰ عَنِ ٱلْفَحْشَآءِ وَٱلْمُنكَرِ ۗ وَلَذِكْرُ ٱللَّهِ أَكْبَرُ ۗ وَٱللَّهُ يَعْلَمُ مَا تَصْنَعُونَ ﴿٤٥﴾

៤៥-ចូរអ្នក(មូហាំម៉ាត់)សូត្រនូវអ្វីដែលគេបានផ្តល់វ៉ាហ៊ីឱ្យអ្នកនៃគម្ពីរ(គួរអាន) ហើយចូរអ្នកប្រតិបត្តិសឡាត ។ ពិតប្រាកដណាស់សឡាតអាចហាមឃាត់អំពីការប្រព្រឹត្តអសីលធម៌ និងអំពើទុច្ចរិត ។ ហើយការរំលឹកទៅចំពោះអល់ឡោះ គឺពិតជាធំធេងបំផុត ។ ហើយអល់ឡោះដឹងនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

۞ وَلَا تُجَـٰدِلُوٓا۟ أَهْلَ ٱلْكِتَـٰبِ إِلَّا بِٱلَّتِى هِىَ أَحْسَنُ إِلَّا ٱلَّذِينَ ظَلَمُوا۟ مِنْهُمْ ۖ وَقُولُوٓا۟ ءَامَنَّا بِٱلَّذِىٓ أُنزِلَ إِلَيْنَا وَأُنزِلَ إِلَيْكُمْ وَإِلَـٰهُنَا وَإِلَـٰهُكُمْ وَٰحِدٌ وَنَحْنُ لَهُۥ مُسْلِمُونَ ﴿٤٦﴾

៤៦-ចូរពួកអ្នកកុំជជែករកខុសត្រូវជាមួយនឹងពួកអះលីគីតាប ក្រៅពីមធ្យោបាយណាដែលល្អបំផុតឱ្យសោះ លើកលែងតែអ្នកដែលបំពានក្នុងចំណោមពួកគេប៉ុណ្ណោះ ។ ហើយចូរពួកអ្នកនិយាយថាៈ ពួកយើងបានជឿនឹងអ្វីដែលគេបានបញ្ចុះមកឱ្យពួកយើង និងបានបញ្ចុះមកឱ្យពួកអ្នក ។ ហើយម្ចាស់របស់ពួកយើង និងម្ចាស់របស់ពួកអ្នកគឺតែមួយ ។ ហើយពួកយើងជាអ្នកដែលប្រគល់ខ្លួនទៅចំពោះទ្រង់តែមួយគត់ ។

وَكَذَٰلِكَ أَنزَلْنَآ إِلَيْكَ ٱلْكِتَـٰبَ ۚ فَٱلَّذِينَ ءَاتَيْنَـٰهُمُ ٱلْكِتَـٰبَ يُؤْمِنُونَ بِهِۦ ۖ وَمِنْ هَـٰٓؤُلَآءِ مَن يُؤْمِنُ بِهِۦ ۚ وَمَا يَجْحَدُ بِـَٔايَـٰتِنَآ إِلَّا ٱلْكَـٰفِرُونَ ﴿٤٧﴾

៤៧-ហើយក៏ដូច្នោះដែរយើងបានបញ្ចុះគម្ពីរ(គួរអាន)ឱ្យអ្នក ។ ហើយពួកដែលយើងបានផ្តល់គម្ពីរឱ្យពួកគេ(យ៉ាហ៊ូទី និងណាសរ៉នី) ពួកគេមានជំនឿនឹងវា ។ ហើយក្នុងចំណោមពួកទាំងនេះ(អារ៉ាប់ម៉ាក្កះ) មានអ្នកខ្លះក៏ជឿលើវាដែរ ។ ហើយគ្មានអ្នកណាម្នាក់បដិសេធនឹងអាយ៉ាត់ៗរបស់យើងក្រៅពីពួកដែលប្រឆាំងឡើយ ។

وَمَا كُنتَ تَتْلُوا۟ مِن قَبْلِهِۦ مِن كِتَـٰبٍ وَلَا تَخُطُّهُۥ بِيَمِينِكَ ۖ إِذًا لَّٱرْتَابَ ٱلْمُبْطِلُونَ ﴿٤٨﴾

៤៨-ហើយអ្នក(មូហាំម៉ាត់)មិនធ្លាប់ចេះសូត្រគម្ពីរណាមួយពីមុនវា(គម្ពីរគួរអាន)ឡើយ ។ ហើយដៃស្តាំរបស់អ្នកក៏ពុំចេះសរសេរវាដែរ ។ បើមិនដូច្នោះទេ ពួកដែលប្រឆាំងនឹងមានការសង្ស័យ(ថាអ្នកបានចម្លងពីគម្ពីរមុនៗ)ជាមិនខាន ។

بَلۡ هُوَ ءَايَٰتُۢ بَيِّنَٰتٞ فِي صُدُورِ ٱلَّذِينَ
أُوتُواْ ٱلۡعِلۡمَۚ وَمَا يَجۡحَدُ بِـَٔايَٰتِنَآ إِلَّا
ٱلظَّٰلِمُونَ ﴿٤٩﴾

៤៩-ផ្ទុយទៅវិញ វាគឺជាអាយ៉ាត់ៗយ៉ាងច្បាស់លាស់ដែលមាននៅក្នុងចិត្តរបស់បណ្តាអ្នកដែលគេផ្តល់ចំណេះដឹងឱ្យ ។ ហើយគ្មានអ្នកណាម្នាក់បដិសេធនឹងអាយ៉ាត់ៗរបស់យើងក្រៅពីពួកដែលបំពានឡើយ ។

وَقَالُواْ لَوۡلَآ أُنزِلَ عَلَيۡهِ ءَايَٰتٞ مِّن رَّبِّهِۦۖ
قُلۡ إِنَّمَا ٱلۡأٓيَٰتُ عِندَ ٱللَّهِ وَإِنَّمَآ أَنَا۠ نَذِيرٞ
مُّبِينٌ ﴿٥٠﴾

៥០-ហើយពួកគេបាននិយាយថាៈ ហេតុអ្វីបានជាគេ( អល់ឡោះ) មិនបានបញ្ចុះឱ្យគេ( មូហាំម៉ាត់) នូវមុជីហ្សាត់ពីម្ចាស់របស់គេ? ចូរអ្នកពោលថាៈ ពិតប្រាកដណាស់ មុជីហ្សាត់ទាំងឡាយនៅនឹងអល់ឡោះ ។ ហើយតាមការពិតខ្ញុំគ្រាន់តែជាអ្នកដាស់តឿនព្រមានយ៉ាងច្បាស់លាស់ប៉ុណ្ណោះ ។

أَوَلَمۡ يَكۡفِهِمۡ أَنَّآ أَنزَلۡنَا عَلَيۡكَ ٱلۡكِتَٰبَ
يُتۡلَىٰ عَلَيۡهِمۡۚ إِنَّ فِي ذَٰلِكَ لَرَحۡمَةٗ
وَذِكۡرَىٰ لِقَوۡمٖ يُؤۡمِنُونَ ﴿٥١﴾

៥១-តើមិនគ្រប់គ្រាន់សម្រាប់ពួកគេទេឬ គម្ពីរដែលយើងបានបញ្ចុះឱ្យអ្នក( មូហាំម៉ាត់) ដែលត្រូវគេសូត្រឱ្យពួកគេស្តាប់នោះ? ពិតប្រាកដណាស់ នៅក្នុងរឿងទាំងនោះគឺជាក្តីមេត្តាករុណា និងជាការរំលឹកសម្រាប់ក្រុមដែលមានជំនឿ ។

قُلۡ كَفَىٰ بِٱللَّهِ بَيۡنِي وَبَيۡنَكُمۡ شَهِيدٗاۖ يَعۡلَمُ
مَا فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۗ وَٱلَّذِينَ
ءَامَنُواْ بِٱلۡبَٰطِلِ وَكَفَرُواْ بِٱللَّهِ أُوْلَٰٓئِكَ هُمُ
ٱلۡخَٰسِرُونَ ﴿٥٢﴾

៥២-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ គ្រប់គ្រាន់ហើយដែលអល់ឡោះជាសាក្សីរវាងខ្ញុំនិងពួកអ្នក ។ ទ្រង់ដឹងនូវអ្វីដែលមាននៅលើមេឃជាច្រើនជាន់និងផែនដី ។ ហើយពួកដែលបានជឿលើប្រការមិនត្រឹមត្រូវ និងបានប្រឆាំងនឹងអល់ឡោះ ពួកទាំងនោះគឺជាពួកដែលខាតបង់ ។

وَيَسۡتَعۡجِلُونَكَ بِٱلۡعَذَابِۚ وَلَوۡلَآ أَجَلٞ مُّسَمّٗى
لَّجَآءَهُمُ ٱلۡعَذَابُ وَلَيَأۡتِيَنَّهُم بَغۡتَةٗ وَهُمۡ لَا
يَشۡعُرُونَ ﴿٥٣﴾

៥៣-ហើយពួកគេសុំអ្នក( មូហាំម៉ាត់) ឱ្យផ្តល់នូវទារុណកម្មភ្លាមៗ ។ ប្រសិនបើគ្មានពេលកំណត់ច្បាស់លាស់ទេនោះ ទារុណកម្មពិតជាបានមកដល់ពួកគេ និងធ្លាក់លើពួកគេភ្លាមៗដោយពួកគេមិនដឹងខ្លួនជាមិនខាន ។

يَسۡتَعۡجِلُونَكَ بِٱلۡعَذَابِ وَإِنَّ جَهَنَّمَ لَمُحِيطَةُۢ
بِٱلۡكَٰفِرِينَ ﴿٥٤﴾

៥៤-ហើយពួកគេសុំអ្នក( មូហាំម៉ាត់) ឱ្យផ្តល់នូវទារុណកម្មភ្លាមៗ ។ ហើយពិតប្រាកដណាស់ នរកជើហាន់ណាំពិតជាឡោមព័ទ្ធពួកដែលប្រឆាំង ។

يَوۡمَ يَغۡشَىٰهُمُ ٱلۡعَذَابُ مِن فَوۡقِهِمۡ وَمِن تَحۡتِ
أَرۡجُلِهِمۡ وَيَقُولُ ذُوقُواْ مَا كُنتُمۡ تَعۡمَلُونَ ﴿٥٥﴾

៥៥-នៅថ្ងៃ( បរលោក) ទារុណកម្មនឹងគ្របដណ្តប់ពួកគេពីលើពួកគេ និងក្រោមជើងពួកគេ ហើយទ្រង់មានបន្ទូលថាៈ ចូរពួកអ្នកភ្លក្សនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្តកន្លងមកចុះ ។

يَٰعِبَادِيَ ٱلَّذِينَ ءَامَنُوٓاْ إِنَّ أَرۡضِي وَٰسِعَةٞ فَإِيَّٰيَ فَٱعۡبُدُونِ ﴿٥٦﴾

៥៦-ឱបណ្តាខ្ញុំរបស់យើងដែលមានជំនឿ! ពិតប្រាកដណាស់ ផែនដីរបស់យើងគឺធំទូលាយ(ដូច្នេះចូរពួកអ្នកភៀសខ្លួនទៅកន្លែងដែលមានសុវត្ថិភាព) ហើយពួកអ្នកត្រូវគោរពសក្ការៈមកចំពោះយើងតែមួយគត់។

كُلُّ نَفۡسٖ ذَآئِقَةُ ٱلۡمَوۡتِۖ ثُمَّ إِلَيۡنَا تُرۡجَعُونَ ﴿٥٧﴾

៥៧-រាល់ជីវិតទាំងអស់នឹងភ្លក្សរសជាតិនៃសេចក្តីស្លាប់។ បន្ទាប់មកពួកអ្នកនឹងត្រូវវិលត្រឡប់មកកាន់យើងវិញ។

وَٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ لَنُبَوِّئَنَّهُم مِّنَ ٱلۡجَنَّةِ غُرَفٗا تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَاۚ نِعۡمَ أَجۡرُ ٱلۡعَٰمِلِينَ ﴿٥٨﴾

៥៨-ហើយបណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អនោះ យើងនឹងរៀបចំឱ្យពួកគេនូវវិមានដ៏ស្កឹមស្កៃនៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវាដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។ ការតបស្នងចំពោះបណ្តាអ្នកសាងអំពើល្អគឺឧត្តុង្គឧត្តមបំផុត។

ٱلَّذِينَ صَبَرُواْ وَعَلَىٰ رَبِّهِمۡ يَتَوَكَّلُونَ ﴿٥٩﴾

៥៩-គឺបណ្តាអ្នកដែលអត់ធ្មត់(ក្នុងការគោរពសក្ការៈចំពោះអល់ឡោះ) និងបណ្តាអ្នកដែលប្រគល់ការទុកចិត្តទៅលើម្ចាស់របស់ពួកគេ។

وَكَأَيِّن مِّن دَآبَّةٖ لَّا تَحۡمِلُ رِزۡقَهَا ٱللَّهُ يَرۡزُقُهَا وَإِيَّاكُمۡۚ وَهُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ﴿٦٠﴾

៦០-ហើយមានសត្វធាតុជាច្រើនដែលមិនត្រៀមទុកចំណីអាហាររបស់វា តែអល់ឡោះទេដែលជាអ្នកប្រទានចំណីអាហារដល់ពួកវា និងពួកអ្នក។ ហើយទ្រង់មហាឮ មហាដឹង។

وَلَئِن سَأَلۡتَهُم مَّنۡ خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ وَسَخَّرَ ٱلشَّمۡسَ وَٱلۡقَمَرَ لَيَقُولُنَّ ٱللَّهُۖ فَأَنَّىٰ يُؤۡفَكُونَ ﴿٦١﴾

៦១-ហើយប្រសិនបើអ្នក(មូហាំម៉ាត់)សួរពួកគេថាៈ តើអ្នកណាជាអ្នកដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដី ហើយបានធ្វើឱ្យព្រះអាទិត្យនិងព្រះច័ន្ទមានចលនានោះ? ពួកគេពិតជានឹងឆ្លើយថាៈ គឺអល់ឡោះ។ ដូច្នេះ ហេតុអ្វីបានជាពួកគេងាកចេញពីការពិតទៅវិញ?

ٱللَّهُ يَبۡسُطُ ٱلرِّزۡقَ لِمَن يَشَآءُ مِنۡ عِبَادِهِۦ وَيَقۡدِرُ لَهُۥٓۚ إِنَّ ٱللَّهَ بِكُلِّ شَيۡءٍ عَلِيمٞ ﴿٦٢﴾

៦២-អល់ឡោះបើកទូលាយនូវលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនាក្នុងចំណោមខ្ញុំរបស់ទ្រង់ ហើយទ្រង់ក៏ក្បិតក្បៀតចំពោះខ្ញុំរបស់ទ្រង់មួយចំនួនដែរ។ ពិតប្រាកដណាស់ អល់ឡោះដឹងបំផុតនូវរាល់អ្វីៗទាំងអស់។

وَلَئِن سَأَلۡتَهُم مَّن نَّزَّلَ مِنَ ٱلسَّمَآءِ مَآءٗ

៦៣-ហើយប្រសិនបើអ្នក(មូហាំម៉ាត់)សួរពួកគេថាៈ តើអ្នក

ណាដែលបានបញ្ចុះទឹកភ្លៀងពីលើមេឃ ហើយធ្វើឱ្យដីរស់(មានជីជាតិ)ឡើងវិញ បន្ទាប់ពីវាស្លាប់(គ្មានជីជាតិ)នោះ? ពួកគេពិតជានឹងឆ្លើយថាៈ គឺអល់ឡោះ។ ចូរអ្នកពោលថាៈ រាល់ការសរសើរគឺចំពោះអល់ឡោះ។ ផ្ទុយទៅវិញពួកគេភាគច្រើនមិនដឹងឡើយ។

فَأَحۡيَا بِهِ ٱلۡأَرۡضَ مِنۢ بَعۡدِ مَوۡتِهَا لَيَقُولُنَّ ٱللَّهُۚ قُلِ ٱلۡحَمۡدُ لِلَّهِۚ بَلۡ أَكۡثَرُهُمۡ لَا يَعۡقِلُونَ ٦٣

៦៤-ហើយការរស់នៅក្នុងលោកិយនេះគ្មានអ្វីក្រៅពីការលេងសើចឥតប្រយោជន៍នោះឡើយ។ តែថ្ងៃបរលោកវិញទេទើបវាជាការរស់នៅយ៉ាងពិតប្រាកដប្រសិនបើពួកគេបានដឹងមែននោះ។

وَمَا هَٰذِهِ ٱلۡحَيَوٰةُ ٱلدُّنۡيَآ إِلَّا لَهۡوٞ وَلَعِبٞۚ وَإِنَّ ٱلدَّارَ ٱلۡأٓخِرَةَ لَهِيَ ٱلۡحَيَوَانُۚ لَوۡ كَانُواْ يَعۡلَمُونَ ٦٤

៦៥-ហើយនៅពេលដែលពួកគេជិះសំពៅ(ជួបប្រទះនឹងគ្រោះថ្នាក់)នោះ ពួកគេបួងសួងសុំទៅចំពោះអល់ឡោះដោយចិត្តស្មោះសក្នុងការប្រណិប័តន៍ចំពោះទ្រង់។ តែនៅពេលដែលទ្រង់បានសង្គ្រោះពួកគេឱ្យទៅដល់គ្រើយ ពេលនោះពួកគេបែរជាធ្វើស្ហ៊ីរិកនឹងទ្រង់ទៅវិញ។

فَإِذَا رَكِبُواْ فِي ٱلۡفُلۡكِ دَعَوُاْ ٱللَّهَ مُخۡلِصِينَ لَهُ ٱلدِّينَ فَلَمَّا نَجَّىٰهُمۡ إِلَى ٱلۡبَرِّ إِذَا هُمۡ يُشۡرِكُونَ ٦٥

៦៦-ដើម្បីពួកគេប្រឆាំងនឹងអ្វីដែលយើងបានប្រទានឱ្យពួកគេ និងដើម្បីពួកគេសប្បាយរីករាយ។ ដូច្នេះពួកគេគង់តែនឹងដឹង។

لِيَكۡفُرُواْ بِمَآ ءَاتَيۡنَٰهُمۡ وَلِيَتَمَتَّعُواْۖ فَسَوۡفَ يَعۡلَمُونَ ٦٦

៦៧-តើពួកគេមិនបានឃើញទេឬ ពិតប្រាកដណាស់យើងបានបង្កើតទឹកដី(ម៉ាក្កះ)ជាកន្លែងស្អាតស្អំមានសុវត្ថិភាព ខណៈដែលមនុស្សលោកនៅជុំវិញពួកគេកំពុងឆក់ប្លន់ កាប់សម្លាប់គ្នានោះ? ដូច្នេះ តើពួកគេនៅតែជឿលើប្រការមិនត្រឹមត្រូវ និងប្រឆាំងនឹងនៀកម៉ាត់របស់អល់ឡោះឬ?

أَوَلَمۡ يَرَوۡاْ أَنَّا جَعَلۡنَا حَرَمًا ءَامِنٗا وَيُتَخَطَّفُ ٱلنَّاسُ مِنۡ حَوۡلِهِمۡۚ أَفَبِٱلۡبَٰطِلِ يُؤۡمِنُونَ وَبِنِعۡمَةِ ٱللَّهِ يَكۡفُرُونَ ٦٧

៦៨-ហើយគ្មាននរណាម្នាក់បំពានជាងអ្នកដែលបានប្រឌិតរឿងភូតកុហកចំពោះអល់ឡោះ ឬអ្នកដែលបានបដិសេធនឹងការពិតនៅពេលដែលវាមកដល់គេនោះឡើយ។ តើនៅក្នុងនរកជើហាន់ណាំមិនមែនជាកន្លែងសម្រាប់ពួកដែលប្រឆាំងទេឬ?

وَمَنۡ أَظۡلَمُ مِمَّنِ ٱفۡتَرَىٰ عَلَى ٱللَّهِ كَذِبًا أَوۡ كَذَّبَ بِٱلۡحَقِّ لَمَّا جَآءَهُۥٓۚ أَلَيۡسَ فِي جَهَنَّمَ مَثۡوٗى لِّلۡكَٰفِرِينَ ٦٨

៦៩-រីឯបណ្ដាអ្នកដែលបានតស៊ូក្នុងមាគ៌ារបស់យើងវិញ យើងពិតជានឹងចង្អុលបង្ហាញមាគ៌ារបស់យើងដល់ពួកគេជាមិនខាន។ ហើយពិតប្រាកដណាស់ អល់ឡោះគឺស្ថិតនៅជាមួយបណ្ដាអ្នកដែលធ្វើល្អ។

وَٱلَّذِينَ جَٰهَدُواْ فِينَا لَنَهۡدِيَنَّهُمۡ سُبُلَنَاۚ وَإِنَّ ٱللَّهَ لَمَعَ ٱلۡمُحۡسِنِينَ ٦٩

## ជំពូកអើរ៉ូម

ក្នុងនាមអល់ឡោះមហាសប្បុរស  មហាអាណិតស្រឡាញ់ ។

១-អាលីហ្វ ឡាម មីម ។

២-ពួករ៉ូមត្រូវបានគេ( ពួកហ្វារីស៊ី) ផ្តួលរំលំ ។

៣-នៅលើទឹកដីដ៏ជិតបំផុត( ទឹកដីស្ហាម) ។ ហើយពួកគេ(រ៉ូម) បន្ទាប់ពីបានដួលរលំនឹងទទួលបានជ័យជំនះវិញ

៤-ក្នុងអំឡុងពេលតែប៉ុន្មានឆ្នាំប៉ុណ្ណោះ ។ ព្រឹត្តិការណ៍ទាំងមុន( ការបរាជ័យ) ទាំងក្រោយ( ជ័យជំនះ) គឺជាការកំណត់របស់អល់ឡោះ ។ ហើយនៅថ្ងៃនោះ( ថ្ងៃដែលរ៉ូមមានជ័យជំនះ) គឺជាថ្ងៃដែលបណ្តាអ្នកមានជំនឿសប្បាយរីករាយ

៥-ដោយសារតែមានជំនួយពីអល់ឡោះ ទ្រង់ជួយអ្នកណាដែលទ្រង់មានចេតនា ។ ហើយទ្រង់មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់ ។

៦-ជាការសន្យារបស់អល់ឡោះ ។ អល់ឡោះមិនដែលធ្វើឱ្យខុសការសន្យារបស់ទ្រង់ឡើយ ប៉ុន្តែមនុស្សលោកភាគច្រើនគឺមិនដឹងឡើយ ។

៧-ពួកគេដឹងនូវការលាតត្រដាង( ជំនួញ ការងារកសិកម្ម ឧស្សាហកម្ម...) អំពីការរស់នៅក្នុងលោកិយនេះតែប៉ុណ្ណោះ តែពួកគេមិនយកចិត្តទុកដាក់អំពីកិច្ចការថ្ងៃបរលោកឡើយ ។

៨-តើពួកគេមិនធ្លាប់បានគិតពិចារណាអំពីខ្លួនរបស់ពួកគេទេឬ? អល់ឡោះមិនបានបង្កើតមេឃជាច្រើនជាន់និងផែនដី ហើយនិងអ្វីៗដែលនៅចន្លោះវាទាំងពីរឡើយ លើកលែងតែមានមូលហេតុត្រឹមត្រូវ និងពេលកំណត់ច្បាស់លាស់ ។ ហើយពិតប្រាកដណាស់ មនុស្សលោកភាគច្រើនជាអ្នកបដិសេធនឹងការជួបនឹងម្ចាស់របស់ពួកគេ ។

៩-តើពួកគេ( អារ៉ាប់ម៉ាក្កះ) មិនបានធ្វើដំណើរនៅលើផែនដី និង

## سورة الروم

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

الٓمٓ ١

غُلِبَتِ ٱلرُّومُ ٢

فِيٓ أَدۡنَى ٱلۡأَرۡضِ وَهُم مِّنۢ بَعۡدِ غَلَبِهِمۡ
سَيَغۡلِبُونَ ٣

فِي بِضۡعِ سِنِينَۗ لِلَّهِ ٱلۡأَمۡرُ مِن قَبۡلُ وَمِنۢ
بَعۡدُۚ وَيَوۡمَئِذٖ يَفۡرَحُ ٱلۡمُؤۡمِنُونَ ٤

بِنَصۡرِ ٱللَّهِۚ يَنصُرُ مَن يَشَآءُۖ وَهُوَ ٱلۡعَزِيزُ
ٱلرَّحِيمُ ٥

وَعۡدَ ٱللَّهِۖ لَا يُخۡلِفُ ٱللَّهُ وَعۡدَهُۥ وَلَٰكِنَّ أَكۡثَرَ
ٱلنَّاسِ لَا يَعۡلَمُونَ ٦

يَعۡلَمُونَ ظَٰهِرٗا مِّنَ ٱلۡحَيَوٰةِ ٱلدُّنۡيَا وَهُمۡ عَنِ
ٱلۡأٓخِرَةِ هُمۡ غَٰفِلُونَ ٧

أَوَلَمۡ يَتَفَكَّرُواْ فِيٓ أَنفُسِهِمۗ مَّا خَلَقَ ٱللَّهُ
ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ وَمَا بَيۡنَهُمَآ إِلَّا بِٱلۡحَقِّ
وَأَجَلٖ مُّسَمّٗىۗ وَإِنَّ كَثِيرٗا مِّنَ ٱلنَّاسِ بِلِقَآيِٕ
رَبِّهِمۡ لَكَٰفِرُونَ ٨

أَوَلَمۡ يَسِيرُواْ فِي ٱلۡأَرۡضِ فَيَنظُرُواْ كَيۡفَ كَانَ

عَٰقِبَةُ ٱلَّذِينَ مِن قَبۡلِهِمۡۚ كَانُوٓاْ أَشَدَّ مِنۡهُمۡ قُوَّةٗ وَأَثَارُواْ ٱلۡأَرۡضَ وَعَمَرُوهَآ أَكۡثَرَ مِمَّا عَمَرُوهَا وَجَآءَتۡهُمۡ رُسُلُهُم بِٱلۡبَيِّنَٰتِۖ فَمَا كَانَ ٱللَّهُ لِيَظۡلِمَهُمۡ وَلَٰكِن كَانُوٓاْ أَنفُسَهُمۡ يَظۡلِمُونَ ٩

ពិនិត្យមើលទេឬ តើលទ្ធផលចុងក្រោយរបស់ពួក( ក្រុមអាដ និងសាមូដ) ដែលពីមុនពួកគេនោះយ៉ាងដូចម្ដេចដែរ? ពួកគេគឺជាអ្នកដែលខ្លាំងជាងពួកគេ( អារ៉ាប់ម៉ាក្កះ) ទៅទៀត ដោយពួកគេបានធ្វើកសិកម្មនិងបានសាងសង់( លំនៅដ្ឋាន) នៅលើផែនដីច្រើនជាងអ្វីៗដែលពួកគេបានសាងសង់វាទៅទៀត ព្រមទាំងបណ្ដាអ្នកនាំសាររបស់ពួកគេបាននាំមកនូវភស្ដុតាងច្បាស់លាស់ឱ្យពួកគេទៀតផង។ ហើយអល់ឡោះមិនធ្វើបាបពួកគេឡើយ តែពួកគេទេដែលបានធ្វើបាបខ្លួនឯងនោះ។

ثُمَّ كَانَ عَٰقِبَةَ ٱلَّذِينَ أَسَٰٓـُٔواْ ٱلسُّوٓأَىٰٓ أَن كَذَّبُواْ بِـَٔايَٰتِ ٱللَّهِ وَكَانُواْ بِهَا يَسۡتَهۡزِءُونَ ١٠

១០-បន្ទាប់មកលទ្ធផលចុងក្រោយរបស់ពួកដែលប្រព្រឹត្តអំពើអាក្រក់ គឺទារុណកម្មដោយសារតែពួកគេបានបដិសេធនឹងអាយ៉ាត់ៗរបស់អល់ឡោះ និងបានសើចចំអកចំពោះវា។

ٱللَّهُ يَبۡدَؤُاْ ٱلۡخَلۡقَ ثُمَّ يُعِيدُهُۥ ثُمَّ إِلَيۡهِ تُرۡجَعُونَ ١١

១១-អល់ឡោះជាអ្នកដែលចាប់ផ្ដើមបង្កើតមនុស្សលោក( និងអ្វីៗផ្សេងទៀត) បន្ទាប់មកទ្រង់នឹងបង្កើតវាសាជាថ្មីម្ដងទៀត( នៅថ្ងៃបរលោក) ក្រោយមកពួកអ្នកនឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់វិញ។

وَيَوۡمَ تَقُومُ ٱلسَّاعَةُ يُبۡلِسُ ٱلۡمُجۡرِمُونَ ١٢

១២-ហើយនៅថ្ងៃបរលោកមកដល់ ពួកដែលប្រព្រឹត្តអំពើអាក្រក់នឹងអស់សង្ឃឹមយ៉ាងខ្លាំង។

وَلَمۡ يَكُن لَّهُم مِّن شُرَكَآئِهِمۡ شُفَعَٰٓؤُاْ وَكَانُواْ بِشُرَكَآئِهِمۡ كَٰفِرِينَ ١٣

១៣-ហើយគ្មានការអន្តរាគមន៍ពីព្រះនានារបស់ពួកគេដល់ពួកគេឡើយ( នៅថ្ងៃបរលោក)។ ហើយពួកគេបានបដិសេធនឹងព្រះនានារបស់ពួកគេ។

وَيَوۡمَ تَقُومُ ٱلسَّاعَةُ يَوۡمَئِذٖ يَتَفَرَّقُونَ ١٤

១៤-ហើយនៅថ្ងៃបរលោកមកដល់ នៅថ្ងៃនោះពួកគេបែកចេញពីគ្នា( អ្នកមានជំនឿ និងអ្នកគ្មានជំនឿ)។

فَأَمَّا ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ فَهُمۡ فِي رَوۡضَةٖ يُحۡبَرُونَ ١٥

១៥-រីឯបណ្ដាអ្នកដែលមានជំនឿនិងបានសាងអំពើល្អគឺពួកគេនឹងស្ថិតក្នុងសួនមួយដែលពួកគេសប្បាយរីករាយ( ឋានសួគ៌)។

وَأَمَّا ٱلَّذِينَ كَفَرُواْ وَكَذَّبُواْ بِـَٔايَٰتِنَا وَلِقَآيِٕ ٱلۡأٓخِرَةِ فَأُوْلَٰٓئِكَ فِي ٱلۡعَذَابِ مُحۡضَرُونَ ١٦

១៦-ហើយចំណែកឯអ្នកដែលគ្មានជំនឿ និងបានបដិសេធនឹងអាយ៉ាត់ៗរបស់យើង ហើយនិងបានបដិសេធនឹងការជួបនៅថ្ងៃ

بَرلោក ពួកទាំងនោះនឹងស្ថិតនៅក្នុងទារុណកម្ម ។

فَسُبْحَٰنَ ٱللَّهِ حِينَ تُمْسُونَ وَحِينَ تُصْبِحُونَ ﴿١٧﴾

១៧-ដូច្នេះ ចូរសរសើរ និងលើកតម្កើងចំពោះអល់ឡោះរៀងរាល់ពេលល្ងាច និងពេលព្រឹក ។

وَلَهُ ٱلْحَمْدُ فِى ٱلسَّمَٰوَٰتِ وَٱلْأَرْضِ وَعَشِيًّا وَحِينَ تُظْهِرُونَ ﴿١٨﴾

១៨-ហើយរាល់ការសរសើរនៅលើមេឃជាច្រើនជាន់ និងផែនដីទាំងពេលល្ងាចនិងពេលថ្ងៃត្រង់គឺចំពោះទ្រង់តែមួយគត់ ។

يُخْرِجُ ٱلْحَىَّ مِنَ ٱلْمَيِّتِ وَيُخْرِجُ ٱلْمَيِّتَ مِنَ ٱلْحَىِّ وَيُحْىِ ٱلْأَرْضَ بَعْدَ مَوْتِهَا ۚ وَكَذَٰلِكَ تُخْرَجُونَ ﴿١٩﴾

១៩-ទ្រង់បញ្ចេញរបស់រស់ពីរបស់ស្លាប់និងបញ្ចេញរបស់ស្លាប់ពីរបស់រស់[1] ហើយទ្រង់ធ្វើឱ្យដីរស់(មានជីជាតិ)ឡើងវិញ បន្ទាប់ពីវាស្លាប់(គ្មានជីជាតិ) ។ ដូច្នោះដែរពួកអ្នកត្រូវគេបញ្ចេញ(ពីផ្នូរ)មកវិញ ។

وَمِنْ ءَايَٰتِهِۦٓ أَنْ خَلَقَكُم مِّن تُرَابٍ ثُمَّ إِذَآ أَنتُم بَشَرٌ تَنتَشِرُونَ ﴿٢٠﴾

២០-ហើយក្នុងចំណោមភស្តុតាងរបស់ទ្រង់ គឺទ្រង់បានបង្កើតពួកអ្នកអំពីដី(អាដាំ) បន្ទាប់ពីពេលនោះមក ពួកអ្នកក៏ក្លាយជាមនុស្សដែលពង្រាយគ្នា(ពាសពេញផែនដី) ។

وَمِنْ ءَايَٰتِهِۦٓ أَنْ خَلَقَ لَكُم مِّنْ أَنفُسِكُمْ أَزْوَٰجًا لِّتَسْكُنُوٓا۟ إِلَيْهَا وَجَعَلَ بَيْنَكُم مَّوَدَّةً وَرَحْمَةً ۚ إِنَّ فِى ذَٰلِكَ لَءَايَٰتٍ لِّقَوْمٍ يَتَفَكَّرُونَ ﴿٢١﴾

២១-ហើយក្នុងចំណោមភស្តុតាងរបស់ទ្រង់ គឺទ្រង់បានបង្កើតឱ្យពួកអ្នកនូវភរិយាចេញពីខ្លួនពួកអ្នក ដើម្បីឱ្យពួកអ្នកមានភាពកក់ក្ដៅជាមួយនាង ។ ហើយទ្រង់បានបង្កើតឱ្យមានការស្រឡាញ់និងអាណិតអាសូររវាងពួកអ្នក ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាង៧សម្រាប់ក្រុមដែលចេះគិតពិចារណា ។

وَمِنْ ءَايَٰتِهِۦ خَلْقُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ وَٱخْتِلَٰفُ أَلْسِنَتِكُمْ وَأَلْوَٰنِكُمْ ۚ إِنَّ فِى ذَٰلِكَ لَءَايَٰتٍ لِّلْعَٰلِمِينَ ﴿٢٢﴾

២២-ហើយក្នុងចំណោមភស្តុតាងរបស់ទ្រង់ គឺការបង្កើតមេឃជាច្រើនជាន់ និងផែនដី និងភាពខុសគ្នានៃភាសា ហើយនិងពណ៌សម្បុររបស់ពួកអ្នក ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាង៧សម្រាប់បណ្ដាអ្នកដែលមានចំណេះដឹង ។

وَمِنْ ءَايَٰتِهِۦ مَنَامُكُم بِٱلَّيْلِ وَٱلنَّهَارِ وَٱبْتِغَآؤُكُم مِّن فَضْلِهِۦٓ ۚ إِنَّ فِى ذَٰلِكَ لَءَايَٰتٍ لِّقَوْمٍ يَسْمَعُونَ ﴿٢٣﴾

២៣-ហើយក្នុងចំណោមភស្តុតាងរបស់ទ្រង់គឺការសម្រាន្តរបស់ពួកអ្នកនាពេលយប់និងពេលថ្ងៃ និងការស្វែងរករបស់ពួកអ្នកនូវការប្រោសប្រទានរបស់ទ្រង់ ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជា

១-ដូចជាការបង្កើតមនុស្សពីទឹកកាម និងមេមាន់កើតចេញពីពងមាន់ ហើយពងមាន់ចេញពីមេមាន់ ។ល ។

ភស្តុតាងៗសម្រាប់ក្រុមដែលស្តាប់ឮ។

وَمِنْ ءَايَـٰتِهِۦ يُرِيكُمُ ٱلْبَرْقَ خَوْفًا وَطَمَعًا وَيُنَزِّلُ مِنَ ٱلسَّمَآءِ مَآءً فَيُحْىِۦ بِهِ ٱلْأَرْضَ بَعْدَ مَوْتِهَآ ۚ إِنَّ فِى ذَٰلِكَ لَـَٔايَـٰتٍ لِّقَوْمٍ يَعْقِلُونَ ﴿٢٤﴾

២៤-ហើយក្នុងចំណោមភស្តុតាងរបស់ទ្រង់ គឺទ្រង់បង្ហាញពួកអ្នកនូវផ្លេកបន្ទោរជាការបន្លាចនិងជាក្តីសង្ឃឹម(ថានឹងមានទឹកភ្លៀង)។ ហើយទ្រង់បញ្ចុះទឹកភ្លៀងមកពីលើមេឃ និងទ្រង់ធ្វើឱ្យដីរស់(មានជីជាតិ)ឡើងវិញដោយសារវាបន្ទាប់ពីវាស្លាប់(គ្មានជីជាតិ)។ ពិតប្រាកដណាស់នៅក្នុងរឿងនោះគឺជាភស្តុតាងៗសម្រាប់ក្រុមដែលចេះគិតពិចារណា។

وَمِنْ ءَايَـٰتِهِۦٓ أَن تَقُومَ ٱلسَّمَآءُ وَٱلْأَرْضُ بِأَمْرِهِۦ ۚ ثُمَّ إِذَا دَعَاكُمْ دَعْوَةً مِّنَ ٱلْأَرْضِ إِذَآ أَنتُمْ تَخْرُجُونَ ﴿٢٥﴾

២៥-ហើយក្នុងចំណោមភស្តុតាងរបស់ទ្រង់ គឺមេឃ និងផែនដីក្រោកឈរឡើងតាមបទបញ្ជារបស់ទ្រង់។ ក្រោយមកនៅពេលដែលទ្រង់បានហៅពួកអ្នកឱ្យចេញពីផែនដីតែមួយដង ពេលនោះពួកអ្នកក៏ចេញមក(ពីផ្នូរ)។

وَلَهُۥ مَن فِى ٱلسَّمَـٰوَٰتِ وَٱلْأَرْضِ ۖ كُلٌّ لَّهُۥ قَـٰنِتُونَ ﴿٢٦﴾

២៦-ហើយអ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងផែនដីគឺជាកម្មសិទ្ធិរបស់ទ្រង់។ ទាំងអស់នោះគឺសុទ្ធតែគោរពឱនលំទោនចំពោះទ្រង់តែមួយគត់។

وَهُوَ ٱلَّذِى يَبْدَؤُا۟ ٱلْخَلْقَ ثُمَّ يُعِيدُهُۥ وَهُوَ أَهْوَنُ عَلَيْهِ ۚ وَلَهُ ٱلْمَثَلُ ٱلْأَعْلَىٰ فِى ٱلسَّمَـٰوَٰتِ وَٱلْأَرْضِ ۚ وَهُوَ ٱلْعَزِيزُ ٱلْحَكِيمُ ﴿٢٧﴾

២៧-ហើយទ្រង់ជាអ្នកចាប់ផ្តើមបង្កើតមនុស្សលោក បន្ទាប់មកទ្រង់នឹងបង្កើតវាសាជាថ្មីម្តងទៀត(នៅថ្ងៃបរលោក) ហើយវាងាយស្រួលបំផុតសម្រាប់ទ្រង់។ ហើយចំពោះទ្រង់គឺជាគំរូដ៏ឧត្តុង្គឧត្តមទាំងនៅលើមេឃជាច្រើនជាន់ និងផែនដី។ ហើយទ្រង់ជាម្ចាស់មហាខ្លាំងពូកែ មហាគតិបណ្ឌិត។

ضَرَبَ لَكُم مَّثَلًا مِّنْ أَنفُسِكُمْ ۖ هَل لَّكُم مِّن مَّا مَلَكَتْ أَيْمَـٰنُكُم مِّن شُرَكَآءَ فِى مَا رَزَقْنَـٰكُمْ فَأَنتُمْ فِيهِ سَوَآءٌ تَخَافُونَهُمْ كَخِيفَتِكُمْ أَنفُسَكُمْ ۚ كَذَٰلِكَ نُفَصِّلُ ٱلْـَٔايَـٰتِ لِقَوْمٍ يَعْقِلُونَ ﴿٢٨﴾

២៨-ទ្រង់បានលើកឧទាហរណ៍មួយសម្រាប់ពួកអ្នកចេញពីខ្លួនពួកអ្នក។ តើពួកអ្នកយល់ព្រមឱ្យពួកខ្ញុំបម្រើរបស់ពួកអ្នកមានភាគហ៊ុនក្នុងអ្វី(ទ្រព្យសម្បត្តិ)ដែលយើងបានប្រទានឱ្យពួកអ្នកដោយឱ្យពួកអ្នកមានភាពស្មើគ្នានៅក្នុងរឿងនេះ ខណៈដែលពួកអ្នកព្រួយបារម្ភចំពោះពួកគេដូចជាការព្រួយបារម្ភចំពោះពួកដែលមានឋានៈដូចពួកអ្នកដែរឬទេ? ដូច្នេះហើយយើងបកស្រាយនូវអាយ៉ាត់ៗសម្រាប់ក្រុមដែលចេះពិចារណា។

بَلِ ٱتَّبَعَ ٱلَّذِينَ ظَلَمُوٓا۟ أَهْوَآءَهُم بِغَيْرِ

២៩-ផ្ទុយទៅវិញ ពួកដែលបំពានទៅដែលបានធ្វើតាមទំនើងចិត្ត

របស់ពួកគេដោយគ្មានចំណេះដឹងនោះ ។ តើអ្នកណាដែលអាចចង្អុលបង្ហាញដល់អ្នកដែលអល់ឡោះបានធ្វើឱ្យវង្វេងនោះ? ហើយពួកគេគ្មានអ្នកជួយឡើយ ។

៣០-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)តម្រង់មុខរបស់អ្នកទៅចំពោះសាសនាដែលត្រឹមត្រូវ(សាសនាអ៊ីស្លាម) ។ វាជាសាសនារបស់អល់ឡោះដែលទ្រង់បានបង្កើតមនុស្សលោកនៅក្នុងវា ។ គ្មានការផ្លាស់ប្តូរចំពោះការបង្កើតរបស់អល់ឡោះឡើយ ។ នោះហើយជាសាសនាដ៏ត្រឹមត្រូវ ក៏ប៉ុន្តែមនុស្សលោកភាគច្រើនមិនដឹងឡើយ ។

៣១-ចូរពួកអ្នកវិលត្រឡប់ដោយសារភាពទោសកំហុសចំពោះទ្រង់ និងកោតខ្លាចទ្រង់ ។ ហើយចូរពួកអ្នកប្រតិបត្តិសឡាត ហើយពួកអ្នកកុំស្ថិតក្នុងចំណោមពួកមូស្ហ្គរីគីនឱ្យសោះ ។

៣២-គឺជាពួកដែលបានធ្វើឱ្យសាសនារបស់ពួកគេបែកបាក់ដោយពួកគេក្លាយទៅជាក្រុមៗ ។ ក្រុមនីមួយៗពួកគេសប្បាយរីករាយនឹងអ្វីដែលពួកគេមាន(ក្នុងសាសនា) ។

៣៣-ហើយនៅពេលដែលគ្រោះថ្នាក់បានប៉ះទង្គិចចំពោះមនុស្សលោក ពួកគេក៏បានបួងសួងសុំម្ចាស់របស់ពួកគេដោយចិត្តបរិសុទ្ធចំពោះទ្រង់ ។ ក្រោយមកនៅពេលដែលទ្រង់បានឱ្យពួកគេស្គាល់នូវក្តីមេត្តាករុណាពីទ្រង់ ពេលនោះមួយក្រុមក្នុងចំណោមពួកគេបែរជាធ្វើស្ហ៊ីរិកនឹងម្ចាស់របស់ពួកគេទៅវិញ ។

៣៤-ដើម្បីពួកគេប្រឆាំងនឹងអ្វីដែលយើងបានប្រទានឱ្យពួកគេ ។ ហើយចូរពួកអ្នកសប្បាយរីករាយសិនចុះ ពួកអ្នកគង់តែនឹងដឹង ។

៣៥-ឬយើងបានបញ្ចុះភស្តុតាងឱ្យពួកគេ ដែលវានិយាយអំពីអ្វីដែលពួកគេកំពុងធ្វើស្ហ៊ីរិកនឹងទ្រង់នោះ ។

៣៦-ហើយនៅពេលដែលយើងបានឱ្យមនុស្សលោកស្គាល់នូវក្តីមេត្តាករុណា ពួកគេក៏សប្បាយរីករាយនឹងវា ។ តែប្រសិនបើប្រការអាក្រក់បានធ្លាក់លើពួកគេដោយសារតែអ្វីដែលពួកគេបានប្រព្រឹត្ត

عِلْمٍۖ فَمَن يَهْدِى مَنْ أَضَلَّ ٱللَّهُۖ وَمَا لَهُم مِّن نَّٰصِرِينَ ﴿٢٩﴾

فَأَقِمْ وَجْهَكَ لِلدِّينِ حَنِيفًاۚ فِطْرَتَ ٱللَّهِ ٱلَّتِى فَطَرَ ٱلنَّاسَ عَلَيْهَاۚ لَا تَبْدِيلَ لِخَلْقِ ٱللَّهِۚ ذَٰلِكَ ٱلدِّينُ ٱلْقَيِّمُ وَلَٰكِنَّ أَكْثَرَ ٱلنَّاسِ لَا يَعْلَمُونَ ﴿٣٠﴾

۞ مُنِيبِينَ إِلَيْهِ وَٱتَّقُوهُ وَأَقِيمُوا۟ ٱلصَّلَوٰةَ وَلَا تَكُونُوا۟ مِنَ ٱلْمُشْرِكِينَ ﴿٣١﴾

مِنَ ٱلَّذِينَ فَرَّقُوا۟ دِينَهُمْ وَكَانُوا۟ شِيَعًاۖ كُلُّ حِزْبٍۭ بِمَا لَدَيْهِمْ فَرِحُونَ ﴿٣٢﴾

وَإِذَا مَسَّ ٱلنَّاسَ ضُرٌّ دَعَوْا۟ رَبَّهُم مُّنِيبِينَ إِلَيْهِ ثُمَّ إِذَآ أَذَاقَهُم مِّنْهُ رَحْمَةً إِذَا فَرِيقٌ مِّنْهُم بِرَبِّهِمْ يُشْرِكُونَ ﴿٣٣﴾

لِيَكْفُرُوا۟ بِمَآ ءَاتَيْنَٰهُمْۚ فَتَمَتَّعُوا۟ فَسَوْفَ تَعْلَمُونَ ﴿٣٤﴾

أَمْ أَنزَلْنَا عَلَيْهِمْ سُلْطَٰنًا فَهُوَ يَتَكَلَّمُ بِمَا كَانُوا۟ بِهِۦ يُشْرِكُونَ ﴿٣٥﴾

وَإِذَآ أَذَقْنَا ٱلنَّاسَ رَحْمَةً فَرِحُوا۟ بِهَاۖ وَإِن تُصِبْهُمْ سَيِّئَةٌۢ بِمَا قَدَّمَتْ أَيْدِيهِمْ إِذَا هُمْ يَقْنَطُونَ ﴿٣٦﴾

កន្លងមក ពេលនោះពួកគេអស់សង្ឃឹមយ៉ាងខ្លាំង ។

៣៧-តើពួកគេមិនដឹងទេថាៈ ពិតប្រាកដណាស់ អល់ឡោះបើកទូលាយ និងក្បិតក្បៀតនូវលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនានោះ? ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងៗ សម្រាប់ក្រុមដែលមានជំនឿ ។

៣៨-ដូច្នេះ ចូរអ្នកផ្តល់ឱ្យញាតិសន្តាននូវសិទ្ធិរបស់គេ( ការភ្ជាប់សាច់សារលោហិត និងបរិច្ចាគទាន) និងអ្នកក្រីក្រ និងអ្នកធ្វើដំណើរដាច់ស្បៀង ។ នោះគឺជាការប្រសើរបំផុតសម្រាប់បណ្តាអ្នកដែលចង់បានការយល់ព្រមពីអល់ឡោះ ។ ហើយអ្នកទាំងនោះគឺពួកគេជាអ្នកដែលជោគជ័យ ។

៣៩-ហើយអ្វីដែលពួកអ្នកបានផ្តល់ជាការប្រាក់ដើម្បីចង់ឱ្យវាកើនក្នុងទ្រព្យសម្បត្តិអ្នកដទៃនោះ គឺវាមិនកើនចំពោះអល់ឡោះឡើយ ។ តែអ្វីដែលពួកអ្នកបានបរិច្ចាគហ្សាកាត់ដើម្បីចង់បានការយល់ព្រមពីអល់ឡោះ អ្នកទាំងនោះគឺជាអ្នកដែលទទួលបានការប្រទានដ៏ច្រើនលើសលប់ ។

៤០-អល់ឡោះជាអ្នកដែលបានបង្កើតពួកអ្នក រួចទ្រង់បានផ្តល់លាភសក្ការៈឱ្យពួកអ្នក ក្រោយមកទ្រង់ក៏ធ្វើឱ្យពួកអ្នកស្លាប់ បន្ទាប់មកទៀតទ្រង់ធ្វើឱ្យពួកអ្នករស់ឡើងវិញ ។ តើក្នុងចំណោមព្រះនានារបស់ពួកអ្នក មានអ្នកណាដែលអាចធ្វើអ្វីបានដូច្នោះទេ? ទ្រង់មហាស្អាតស្អំ និងខ្ពង់ខ្ពស់អំពីអ្វីដែលពួកគេកំពុងធ្វើស្ហ៊ីរិកនោះ ។

៤១-គ្រោះមហន្តរាយបានលេចឡើងនៅលើផែនដី និងផ្ទៃសមុទ្រដោយសារស្នាដៃរបស់មនុស្សលោក ដើម្បីទ្រង់ធ្វើឱ្យពួកគេភ្លក្សរសជាតិនូវទង្វើខ្លះដែលពួកគេបានប្រព្រឹត្ត ដើម្បីឱ្យពួកគេវិលត្រឡប់(កែខ្លួន) ។

៤២-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ចូរពួកអ្នកធ្វើដំណើរនៅលើផែនដីនិងពិនិត្យមើលចុះ តើលទ្ធផលចុងក្រោយនៃពួកជំនាន់មុន ( ក្រុមនូហ ក្រុមអាដ និងក្រុមសាមូដ) យ៉ាងដូចម្តេច? ពួកគេភាគ

أَوَلَمۡ يَرَوۡاْ أَنَّ ٱللَّهَ يَبۡسُطُ ٱلرِّزۡقَ لِمَن يَشَآءُ
وَيَقۡدِرُۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ لِّقَوۡمٖ
يُؤۡمِنُونَ ٣٧

فَـَٔاتِ ذَا ٱلۡقُرۡبَىٰ حَقَّهُۥ وَٱلۡمِسۡكِينَ وَٱبۡنَ
ٱلسَّبِيلِۚ ذَٰلِكَ خَيۡرٞ لِّلَّذِينَ يُرِيدُونَ وَجۡهَ
ٱللَّهِۖ وَأُوْلَٰٓئِكَ هُمُ ٱلۡمُفۡلِحُونَ ٣٨

وَمَآ ءَاتَيۡتُم مِّن رِّبٗا لِّيَرۡبُوَاْ فِيٓ أَمۡوَٰلِ ٱلنَّاسِ
فَلَا يَرۡبُواْ عِندَ ٱللَّهِۖ وَمَآ ءَاتَيۡتُم مِّن زَكَوٰةٖ
تُرِيدُونَ وَجۡهَ ٱللَّهِ فَأُوْلَٰٓئِكَ هُمُ
ٱلۡمُضۡعِفُونَ ٣٩

ٱللَّهُ ٱلَّذِي خَلَقَكُمۡ ثُمَّ رَزَقَكُمۡ ثُمَّ يُمِيتُكُمۡ
ثُمَّ يُحۡيِيكُمۡۖ هَلۡ مِن شُرَكَآئِكُم مَّن يَفۡعَلُ مِن
ذَٰلِكُم مِّن شَيۡءٖۚ سُبۡحَٰنَهُۥ وَتَعَٰلَىٰ عَمَّا
يُشۡرِكُونَ ٤٠

ظَهَرَ ٱلۡفَسَادُ فِي ٱلۡبَرِّ وَٱلۡبَحۡرِ بِمَا كَسَبَتۡ
أَيۡدِي ٱلنَّاسِ لِيُذِيقَهُم بَعۡضَ ٱلَّذِي عَمِلُواْ
لَعَلَّهُمۡ يَرۡجِعُونَ ٤١

قُلۡ سِيرُواْ فِي ٱلۡأَرۡضِ فَٱنظُرُواْ كَيۡفَ كَانَ
عَٰقِبَةُ ٱلَّذِينَ مِن قَبۡلُۚ كَانَ أَكۡثَرُهُم

ច្រើនជាពួកមូស្ហរីគីន ។

៤៣- ដូច្នេះ ចូរអ្នក( មូហាំម៉ាត់) តម្រង់មុខរបស់អ្នកទៅចំពោះសាសនាដែលត្រឹមត្រូវ( សាសនាអ៊ីស្លាម) មុននឹងថ្ងៃ( បរលោក) មកដល់ពីអល់ឡោះដែលមិនអាចរារាំងវាបានឡើយ ។ នៅថ្ងៃនោះពួកគេបែកខ្ញែកជាក្រុមៗ ។

៤៤-អ្នកណាហើយបានប្រឆាំង( នឹងអល់ឡោះ) គឺការប្រឆាំងរបស់គេនឹងធ្លាក់ទៅលើខ្លួនគេ ។ ហើយអ្នកណាបានសាងអំពើល្អត្រឹមត្រូវ គឺពួកគេរៀបចំ( កន្លែងដ៏ល្អនៅក្នុងឋានសួគ៌) សម្រាប់ខ្លួនពួកគេ ។

៤៥-ដើម្បីទ្រង់នឹងតបស្នងដល់បណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវនូវការប្រោសប្រទានរបស់ទ្រង់ ។ ពិតប្រាកដណាស់ ទ្រង់មិនស្រឡាញ់ពួកដែលប្រឆាំងឡើយ ។

៤៦-ហើយក្នុងចំណោមភស្តុតាងរបស់ទ្រង់ គឺទ្រង់បញ្ជូនខ្យល់ដោយនាំដំណឹងល្អ( ទឹកភ្លៀង) និងដើម្បីឱ្យពួកអ្នកស្គាល់រសជាតិនៃក្ដីមេត្តាករុណារបស់ទ្រង់ និងដើម្បីឱ្យសំពៅធ្វើដំណើរតាមបទបញ្ជារបស់ទ្រង់ ហើយនិងដើម្បីឱ្យពួកអ្នកស្វែងរកការប្រោសប្រទានរបស់ទ្រង់ ហើយដើម្បីឱ្យពួកអ្នកដឹងគុណ ។

៤៧-ហើយជាការពិតណាស់ យើងបានបញ្ជូនបណ្ដាអ្នកនាំសារមុនអ្នក( មូហាំម៉ាត់) ទៅកាន់ក្រុមរបស់ពួកគេ ដោយពួកគេ( អ្នកនាំសារ) បាននាំមកនូវភស្តុតាងដ៏ច្បាស់លាស់ជាច្រើនដល់ពួកគេ ( តែពួកគេបានបដិសេធ) ។ ដូច្នេះ យើងបានផ្ដន្ទាទោសចំពោះពួកដែលបានប្រព្រឹត្តអំពើអាក្រក់ ។ ហើយជាការពិតណាស់ ភារកិច្ចរបស់យើងគឺជួយបណ្ដាអ្នកមានជំនឿ ។

៤៨-អល់ឡោះជាអ្នកដែលបញ្ជូនខ្យល់ រួចទ្រង់ធ្វើឱ្យពពករសាត់ ហើយទ្រង់ពង្រាយវាពាសពេញផ្ទៃមេឃតាមអ្វីដែលទ្រង់មានចេតនា ព្រមទាំងទ្រង់បានធ្វើឱ្យវាទៅជាដុំៗ ពេលនោះអ្នកនឹងឃើញភ្លៀងចេញពីចន្លោះរបស់វា ។ ហើយនៅពេលណាដែលទ្រង់បានស្រោចស្រពវាទៅលើអ្នកណាដែលទ្រង់មានចេតនាក្នុង

مُّشۡرِكِينَ ﴿٤٢﴾

فَأَقِمۡ وَجۡهَكَ لِلدِّينِ ٱلۡقَيِّمِ مِن قَبۡلِ أَن
يَأۡتِيَ يَوۡمٞ لَّا مَرَدَّ لَهُۥ مِنَ ٱللَّهِۖ يَوۡمَئِذٖ
يَصَّدَّعُونَ ﴿٤٣﴾

مَن كَفَرَ فَعَلَيۡهِ كُفۡرُهُۥۖ وَمَنۡ عَمِلَ صَٰلِحٗا
فَلِأَنفُسِهِمۡ يَمۡهَدُونَ ﴿٤٤﴾

لِيَجۡزِيَ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ مِن
فَضۡلِهِۦٓۚ إِنَّهُۥ لَا يُحِبُّ ٱلۡكَٰفِرِينَ ﴿٤٥﴾

وَمِنۡ ءَايَٰتِهِۦٓ أَن يُرۡسِلَ ٱلرِّيَاحَ مُبَشِّرَٰتٖ
وَلِيُذِيقَكُم مِّن رَّحۡمَتِهِۦ وَلِتَجۡرِيَ ٱلۡفُلۡكُ
بِأَمۡرِهِۦ وَلِتَبۡتَغُواْ مِن فَضۡلِهِۦ وَلَعَلَّكُمۡ
تَشۡكُرُونَ ﴿٤٦﴾

وَلَقَدۡ أَرۡسَلۡنَا مِن قَبۡلِكَ رُسُلًا إِلَىٰ قَوۡمِهِمۡ
فَجَآءُوهُم بِٱلۡبَيِّنَٰتِ فَٱنتَقَمۡنَا مِنَ ٱلَّذِينَ
أَجۡرَمُواْۖ وَكَانَ حَقًّا عَلَيۡنَا نَصۡرُ
ٱلۡمُؤۡمِنِينَ ﴿٤٧﴾

ٱللَّهُ ٱلَّذِي يُرۡسِلُ ٱلرِّيَٰحَ فَتُثِيرُ سَحَابٗا
فَيَبۡسُطُهُۥ فِي ٱلسَّمَآءِ كَيۡفَ يَشَآءُ وَيَجۡعَلُهُۥ
كِسَفٗا فَتَرَى ٱلۡوَدۡقَ يَخۡرُجُ مِنۡ خِلَٰلِهِۦۖ فَإِذَآ

أَصَابَ بِهِۦ مَن يَشَآءُ مِنۡ عِبَادِهِۦٓ إِذَا هُمۡ يَسۡتَبۡشِرُونَ ٤٨

ចំណោមខ្ញុំទាំងឡាយរបស់ទ្រង់ ពេលនោះពួកគេសប្បាយរីករាយយ៉ាងខ្លាំង។

وَإِن كَانُواْ مِن قَبۡلِ أَن يُنَزَّلَ عَلَيۡهِم مِّن قَبۡلِهِۦ لَمُبۡلِسِينَ ٤٩

៤៩-ហើយពិតប្រាកដណាស់ ពួកគេកាលពីមុន មុនពេលគេបញ្ចុះ(ទឹកភ្លៀង)ឱ្យពួកគេគឺពួកគេមានការអស់សង្ឃឹមយ៉ាងខ្លាំង។

فَٱنظُرۡ إِلَىٰٓ ءَاثَٰرِ رَحۡمَتِ ٱللَّهِ كَيۡفَ يُحۡيِ ٱلۡأَرۡضَ بَعۡدَ مَوۡتِهَآۚ إِنَّ ذَٰلِكَ لَمُحۡيِ ٱلۡمَوۡتَىٰۖ وَهُوَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٥٠

៥០-ដូច្នេះ ចូរអ្នកពិចារណាមើលទៅលើឥទ្ធិពលនៃក្ដីមេត្តាករុណារបស់អល់ឡោះ តើទ្រង់ធ្វើឱ្យដីរស់(មានជីជាតិ)បន្ទាប់ពីវាស្លាប់(គ្មានជីជាតិ)យ៉ាងដូចម្ដេច? ពិតប្រាកដណាស់ អ្នកដែលអាចធ្វើដូចនោះ គឺជាអ្នកដែលធ្វើឱ្យមនុស្សរស់ឡើងវិញ។ ហើយទ្រង់មានអានុភាពលើអ្វីៗទាំងអស់។

وَلَئِنۡ أَرۡسَلۡنَا رِيحٗا فَرَأَوۡهُ مُصۡفَرّٗا لَّظَلُّواْ مِنۢ بَعۡدِهِۦ يَكۡفُرُونَ ٥١

៥១-ហើយប្រសិនបើយើងបានបញ្ជូនខ្យល់(ដើម្បីបំផ្លាញចំការពួកគេ) ហើយពួកគេបានឃើញចំការនោះក្លាយជាពណ៌លឿង(បន្ទាប់ពីមានពណ៌ខៀវស្រងាត់) ច្បាស់ជាពួកគេនៅតែប្រឆាំងបន្ទាប់ពីនោះដដែល។

فَإِنَّكَ لَا تُسۡمِعُ ٱلۡمَوۡتَىٰ وَلَا تُسۡمِعُ ٱلصُّمَّ ٱلدُّعَآءَ إِذَا وَلَّوۡاْ مُدۡبِرِينَ ٥٢

៥២-ហើយពិតប្រាកដណាស់ អ្នកមិនអាចធ្វើឱ្យអ្នកស្លាប់ស្ដាប់ឮឡើយ ហើយអ្នកក៏មិនអាចធ្វើឱ្យអ្នកថ្លង់ស្ដាប់ឮការស្រែកហៅបានដែរ នៅពេលដែលពួកគេបែរខ្នងចេញហើយនោះ។

وَمَآ أَنتَ بِهَٰدِ ٱلۡعُمۡيِ عَن ضَلَٰلَتِهِمۡۖ إِن تُسۡمِعُ إِلَّا مَن يُؤۡمِنُ بِـَٔايَٰتِنَا فَهُم مُّسۡلِمُونَ ٥٣

៥៣-ហើយអ្នកក៏មិនមែនជាអ្នកចង្អុលបង្ហាញដល់អ្នកដែលងងឹតភ្នែកចំពោះភាពវង្វេងរបស់ពួកគេបានដែរ។ អ្នកមិនអាចធ្វើឱ្យ(អ្នកណាម្នាក់)ស្ដាប់ឮឡើយ លើកលែងតែអ្នកដែលមានជំនឿនឹងអាយ៉ាត់ៗរបស់យើងប៉ុណ្ណោះ។ ហើយពួកគេគឺជាពួកដែលប្រគល់ខ្លួន(កាន់សាសនាអ៊ីស្លាម)។

۞ ٱللَّهُ ٱلَّذِي خَلَقَكُم مِّن ضَعۡفٖ ثُمَّ جَعَلَ مِنۢ بَعۡدِ ضَعۡفٖ قُوَّةٗ ثُمَّ جَعَلَ مِنۢ بَعۡدِ قُوَّةٖ ضَعۡفٗا وَشَيۡبَةٗۚ يَخۡلُقُ مَا يَشَآءُۚ وَهُوَ ٱلۡعَلِيمُ ٱلۡقَدِيرُ ٥٤

៥៤-អល់ឡោះជាអ្នកដែលបានបង្កើតពួកអ្នកពីភាពទន់ខ្សោយ ក្រោយមកទ្រង់បានធ្វើឱ្យមានភាពខ្លាំងក្លាបន្ទាប់ពីទន់ខ្សោយ ក្រោយមកទៀតទ្រង់បានធ្វើឱ្យទៅជាទន់ខ្សោយ និងចាស់ជរាវិញ បន្ទាប់ពីភាពខ្លាំងក្លា។ ទ្រង់បង្កើតអ្វីៗតាមតែទ្រង់មានចេតនា។ ហើយទ្រង់មហាដឹង មហាមានអានុភាព។

٥٥-ហើយនៅពេលថ្ងៃបរលោកមកដល់ ពួកដែលប្រព្រឹត្តអំពើអាក្រក់ស្បថថា: ពួកគេមិនបានរស់នៅ(លើលោកិយ)ក្រៅពីមួយរយៈពេលខ្លីឡើយ។ ដូច្នោះដែរ ពួកគេធ្លាប់ត្រូវបានគេបោកបញ្ឆោត។

وَيَوْمَ تَقُومُ ٱلسَّاعَةُ يُقْسِمُ ٱلْمُجْرِمُونَ مَا لَبِثُواْ غَيْرَ سَاعَةٍ كَذَٰلِكَ كَانُواْ يُؤْفَكُونَ ﴿٥٥﴾

៥៦-ហើយបណ្តាអ្នកដែលត្រូវគេផ្តល់ចំណេះដឹង និងមានជំនឿបាននិយាយថា: ជាការពិតណាស់ ពួកអ្នកបានរស់នៅតាមការកំណត់របស់អល់ឡោះរហូតដល់ថ្ងៃដែលគេធ្វើឱ្យមនុស្សលោករស់ឡើងវិញ(នៅថ្ងៃបរលោក)។ ដូច្នេះនេះជាថ្ងៃដែលគេធ្វើឱ្យមនុស្សលោករស់ឡើងវិញ ប៉ុន្តែពួកអ្នកមិនធ្លាប់បានដឹងឡើយ។

وَقَالَ ٱلَّذِينَ أُوتُواْ ٱلْعِلْمَ وَٱلْإِيمَٰنَ لَقَدْ لَبِثْتُمْ فِي كِتَٰبِ ٱللَّهِ إِلَىٰ يَوْمِ ٱلْبَعْثِ فَهَٰذَا يَوْمُ ٱلْبَعْثِ وَلَٰكِنَّكُمْ كُنتُمْ لَا تَعْلَمُونَ ﴿٥٦﴾

៥៧-ហើយនៅថ្ងៃនោះ ពួកដែលបានបំពាន ការដោះសាររបស់ពួកគេគឺគ្មានផលប្រយោជន៍អ្វីឡើយ ហើយពួកគេក៏មិនត្រូវគេទាមទារឱ្យត្រឡប់ទៅសារភាពទោសកំហុសវិញដែរ។

فَيَوْمَئِذٍ لَّا يَنفَعُ ٱلَّذِينَ ظَلَمُواْ مَعْذِرَتُهُمْ وَلَا هُمْ يُسْتَعْتَبُونَ ﴿٥٧﴾

៥៨-ហើយជាការពិតណាស់ យើងបានលើកគ្រប់ឧទាហរណ៍សម្រាប់មនុស្សលោកនៅក្នុងគម្ពីរគួរអាននេះ។ តែប្រសិនបើអ្នក(មូហាំម៉ាត់)បាននាំភស្តុតាងណាមួយដល់ពួកគេ ពួកដែលបានប្រឆាំងពិតជានិយាយថា: ពួកអ្នកមិនមែនជាអ្វីក្រៅពីពួកដែលបោកប្រាស់នោះឡើយ។

وَلَقَدْ ضَرَبْنَا لِلنَّاسِ فِي هَٰذَا ٱلْقُرْءَانِ مِن كُلِّ مَثَلٍ وَلَئِن جِئْتَهُم بِـَٔايَةٍ لَّيَقُولَنَّ ٱلَّذِينَ كَفَرُوٓاْ إِنْ أَنتُمْ إِلَّا مُبْطِلُونَ ﴿٥٨﴾

៥៩-ដូច្នោះដែរ អល់ឡោះបោះត្រាភ្ជិតលើចិត្តរបស់ពួកដែលមិនដឹងការពិត។

كَذَٰلِكَ يَطْبَعُ ٱللَّهُ عَلَىٰ قُلُوبِ ٱلَّذِينَ لَا يَعْلَمُونَ ﴿٥٩﴾

៦០-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់ ពិតប្រាកដណាស់ ការសន្យារបស់អល់ឡោះគឺជាការពិត។ ហើយចូរកុំឱ្យពួកដែលមិនជឿជាក់(លើអល់ឡោះ)ធ្វើឱ្យអ្នកទន់ខ្សោយឱ្យសោះ។

فَٱصْبِرْ إِنَّ وَعْدَ ٱللَّهِ حَقٌّ وَلَا يَسْتَخِفَّنَّكَ ٱلَّذِينَ لَا يُوقِنُونَ ﴿٦٠﴾

## ជំពូកលុកម៉ាន

## سورة لقمان

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

១-អាលីហ្វ ឡាម មីម។

الٓمٓ ﴿١﴾

២-នេះគឺជាអាយ៉ាត់ៗនៃគម្ពីរ(គួរអាន)ដែលពោរពេញទៅ

تِلْكَ ءَايَٰتُ ٱلْكِتَٰبِ ٱلْحَكِيمِ ﴿٢﴾

ដោយគតិបណ្ឌិត ។

៣-ជាការចង្អុលបង្ហាញ និងជាក្តីមេត្តាករុណាចំពោះបណ្តាអ្នកដែលសាងអំពើល្អ ។

៤-គឺបណ្តាអ្នកដែលប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ ហើយពួកគេមានជំនឿយ៉ាងច្បាស់នឹងថ្ងៃបរលោក ។

៥-អ្នកទាំងនោះស្ថិតលើការចង្អុលបង្ហាញពីម្ចាស់របស់ពួកគេ ហើយអ្នកទាំងនោះគឺជាអ្នកដែលជោគជ័យ ។

៦-ហើយក្នុងចំណោមមនុស្សលោក មានអ្នកខ្លះទិញពាក្យសំដីលេងសើច(អ្វីៗដែលនាំឱ្យភ្លេចអល់ឡោះ) ដើម្បីធ្វើឱ្យអ្នកដទៃវង្វេងពីមាគ៌ារបស់អល់ឡោះដោយគ្មានចំណេះដឹង ហើយគេយកវា(អាយ៉ាត់គួរអាន)ទុកជាការចំអក ។ ពួកទាំងនោះនឹងទទួលទារុណកម្មយ៉ាងអាម៉ាស់បំផុត ។

៧-ហើយនៅពេលដែលអាយ៉ាត់ៗរបស់យើងត្រូវសូត្រឱ្យគេស្តាប់ គេបានងាកចេញទាំងក្រអឺតក្រទមហាក់ដូចជាមិនបានឮហាក់ដូចជាក្នុងត្រចៀកទាំងពីររបស់គេមានឆ្អកចុក ។ ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)ផ្តល់ដំណឹងដល់គេនូវទារុណកម្មដ៏ឈឺចាប់ចុះ ។

៨-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវនោះ ពួកគេនឹងទទួលបានឋានសួគ៌ណាអ៊ីម ។

៩-ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។ ការសន្យារបស់អល់ឡោះគឺជាការពិត ។ ហើយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

១០-ទ្រង់បានបង្កើតមេឃជាច្រើនជាន់ដោយគ្មានសសរដែលពួកអ្នកមើលឃើញវា ។ ហើយទ្រង់បានបោះភ្នំជាច្រើនជាប់នៅលើផែនដី ដើម្បីកុំឱ្យវារញ្ជួយដល់ពួកអ្នក ។ ហើយទ្រង់បានពង្រាយសត្វគ្រប់ប្រភេទនៅលើវា ។ ហើយយើងបានបញ្ចុះទឹកភ្លៀងពីលើមេឃ រួចយើងបានបណ្តុះរុក្ខជាតិគ្រប់ប្រភេទដ៏ស្រស់បំព្រងនៅលើវា ។

هُدًى وَرَحْمَةً لِّلْمُحْسِنِينَ ﴿٣﴾

ٱلَّذِينَ يُقِيمُونَ ٱلصَّلَوٰةَ وَيُؤْتُونَ ٱلزَّكَوٰةَ وَهُم
بِٱلْأَخِرَةِ هُمْ يُوقِنُونَ ﴿٤﴾

أُوْلَٰٓئِكَ عَلَىٰ هُدًى مِّن رَّبِّهِمْ ۖ وَأُوْلَٰٓئِكَ هُمُ
ٱلْمُفْلِحُونَ ﴿٥﴾

وَمِنَ ٱلنَّاسِ مَن يَشْتَرِى لَهْوَ ٱلْحَدِيثِ
لِيُضِلَّ عَن سَبِيلِ ٱللَّهِ بِغَيْرِ عِلْمٍ وَيَتَّخِذَهَا
هُزُوًا ۚ أُوْلَٰٓئِكَ لَهُمْ عَذَابٌ مُّهِينٌ ﴿٦﴾

وَإِذَا تُتْلَىٰ عَلَيْهِ ءَايَٰتُنَا وَلَّىٰ مُسْتَكْبِرًا كَأَن
لَّمْ يَسْمَعْهَا كَأَنَّ فِىٓ أُذُنَيْهِ وَقْرًا ۖ فَبَشِّرْهُ
بِعَذَابٍ أَلِيمٍ ﴿٧﴾

إِنَّ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ لَهُمْ
جَنَّٰتُ ٱلنَّعِيمِ ﴿٨﴾

خَٰلِدِينَ فِيهَا ۖ وَعْدَ ٱللَّهِ حَقًّا ۚ وَهُوَ ٱلْعَزِيزُ
ٱلْحَكِيمُ ﴿٩﴾

خَلَقَ ٱلسَّمَٰوَٰتِ بِغَيْرِ عَمَدٍ تَرَوْنَهَا ۖ وَأَلْقَىٰ فِى
ٱلْأَرْضِ رَوَٰسِىَ أَن تَمِيدَ بِكُمْ وَبَثَّ فِيهَا مِن
كُلِّ دَآبَّةٍ ۚ وَأَنزَلْنَا مِنَ ٱلسَّمَآءِ مَآءً فَأَنۢبَتْنَا
فِيهَا مِن كُلِّ زَوْجٍ كَرِيمٍ ﴿١٠﴾

១១-នេះគឺជាការបង្កើតរបស់អល់ឡោះ។ ដូច្នេះ ចូរពួកអ្នកបង្ហាញយើងមក តើអ្វីដែលអ្នកផ្សេងពីទ្រង់បានបង្កើតនោះ? ផ្ទុយទៅវិញ ពួកដែលបំពានគឺស្ថិតក្នុងភាពវង្វេងដ៏ច្បាស់លាស់។

១២-ហើយជាការពិតណាស់ យើងបានប្រទានឱ្យលុកម៉ាននូវភាពឈ្លាសវៃ (ដោយយើងមានបន្ទូលថា) ចូរអ្នកដឹងគុណចំពោះអល់ឡោះ។ ហើយអ្នកណាដែលដឹងគុណ(ចំពោះទ្រង់) ពិតប្រាកដណាស់ គេដឹងគុណចំពោះខ្លួនគេផ្ទាល់។ តែជនណាហើយបានរមិលគុណវិញនោះ ពិតប្រាកដណាស់អល់ឡោះមហាមានលើសលប់(មិនត្រូវការអ្វីទាំងអស់) ជាទីកោតសរសើរ។

១៣-ហើយ(ចូរចងចាំ)នៅពេលដែលលុកម៉ានបានពោលទៅកាន់កូនប្រុសរបស់គាត់ដោយគាត់ទូន្មានគេថាៈ ឱកូនសម្លាញ់! ឯងកុំធ្វើស្ហ៊ីរិកនឹងអល់ឡោះឱ្យសោះ។ ពិតប្រាកដណាស់ អំពើស្ហ៊ីរិកគឺជាបាបកម្មមួយដ៏ធំ។

១៤-ហើយយើងបានផ្តែផ្តាំដល់មនុស្សលោក(ឱ្យធ្វើល្អ)ចំពោះឪពុកម្តាយរបស់គេ។ (ដោយសារ)ម្តាយរបស់គេបានពរពោះរូបគេដោយលំបាកថែមលើលំបាកបំផុត។ ហើយការផ្តាច់បំបៅរូបគេក្នុងអំឡុងពេលពីរឆ្នាំ។ ដូច្នេះ ចូរអ្នកដឹងគុណចំពោះយើង និងឪពុកម្តាយរបស់អ្នកចុះ។ ចំពោះយើងគឺជាកន្លែងវិលត្រឡប់។

១៥-ហើយប្រសិនបើគាត់ទាំងពីរ(ឪពុកម្តាយ)ព្យាយាមជម្រុញឱ្យអ្នកធ្វើស្ហ៊ីរិកជាមួយយើង(អល់ឡោះ)នូវអ្វីដែលអ្នកមិនបានដឹងវាទេនោះ ចូរអ្នកកុំស្តាប់បង្គាប់ពួកគាត់ទាំងពីរឱ្យសោះ។ តែអ្នកត្រូវកតញ្ញូចំពោះគាត់ទាំងពីរនៅក្នុងលោកិយនេះដោយអំពើល្អ។ ហើយចូរអ្នកដើរតាមមាគ៌ាអ្នកដែលបានវិលត្រឡប់មករកយើង។ បន្ទាប់មកកន្លែងវិលត្រឡប់របស់ពួកអ្នកគឺមកកាន់យើងតែមួយគត់។ ហើយយើងនឹងប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត។

១៦-ឱកូនសម្លាញ់! ពិតប្រាកដណាស់ ទោះបីជាវា(អំពើល្អ ឬអំពើអាក្រក់)មានទម្ងន់ប៉ុនគ្រាប់ស្ពៃ ហើយវានៅក្នុងថ្ម ឬនៅលើមេឃជាច្រើនជាន់ ឬនៅលើផែនដីក៏ដោយ ក៏អល់ឡោះនាំវាមក

هَٰذَا خَلۡقُ ٱللَّهِ فَأَرُونِي مَاذَا خَلَقَ ٱلَّذِينَ مِن دُونِهِۦۚ بَلِ ٱلظَّٰلِمُونَ فِي ضَلَٰلٖ مُّبِينٖ ﴿١١﴾

وَلَقَدۡ ءَاتَيۡنَا لُقۡمَٰنَ ٱلۡحِكۡمَةَ أَنِ ٱشۡكُرۡ لِلَّهِۚ وَمَن يَشۡكُرۡ فَإِنَّمَا يَشۡكُرُ لِنَفۡسِهِۦۖ وَمَن كَفَرَ فَإِنَّ ٱللَّهَ غَنِيٌّ حَمِيدٞ ﴿١٢﴾

وَإِذۡ قَالَ لُقۡمَٰنُ لِٱبۡنِهِۦ وَهُوَ يَعِظُهُۥ يَٰبُنَيَّ لَا تُشۡرِكۡ بِٱللَّهِۖ إِنَّ ٱلشِّرۡكَ لَظُلۡمٌ عَظِيمٞ ﴿١٣﴾

وَوَصَّيۡنَا ٱلۡإِنسَٰنَ بِوَٰلِدَيۡهِ حَمَلَتۡهُ أُمُّهُۥ وَهۡنًا عَلَىٰ وَهۡنٖ وَفِصَٰلُهُۥ فِي عَامَيۡنِ أَنِ ٱشۡكُرۡ لِي وَلِوَٰلِدَيۡكَ إِلَيَّ ٱلۡمَصِيرُ ﴿١٤﴾

وَإِن جَٰهَدَاكَ عَلَىٰٓ أَن تُشۡرِكَ بِي مَا لَيۡسَ لَكَ بِهِۦ عِلۡمٞ فَلَا تُطِعۡهُمَاۖ وَصَاحِبۡهُمَا فِي ٱلدُّنۡيَا مَعۡرُوفٗاۖ وَٱتَّبِعۡ سَبِيلَ مَنۡ أَنَابَ إِلَيَّۚ ثُمَّ إِلَيَّ مَرۡجِعُكُمۡ فَأُنَبِّئُكُم بِمَا كُنتُمۡ تَعۡمَلُونَ ﴿١٥﴾

يَٰبُنَيَّ إِنَّهَآ إِن تَكُ مِثۡقَالَ حَبَّةٖ مِّنۡ خَرۡدَلٖ فَتَكُن فِي صَخۡرَةٍ أَوۡ فِي ٱلسَّمَٰوَٰتِ أَوۡ فِي

ٱلۡأَرۡضِ يَأۡتِ بِهَا ٱللَّهُۚ إِنَّ ٱللَّهَ لَطِيفٌ خَبِيرٞ ١٦

(ដើម្បីតបស្នង)ដែរ។ ពិតប្រាកដណាស់ អល់ឡោះមហាទន់ភ្លន់ មហាជ្រួតជ្រាប។

يَٰبُنَيَّ أَقِمِ ٱلصَّلَوٰةَ وَأۡمُرۡ بِٱلۡمَعۡرُوفِ وَٱنۡهَ عَنِ ٱلۡمُنكَرِ وَٱصۡبِرۡ عَلَىٰ مَآ أَصَابَكَۖ إِنَّ ذَٰلِكَ مِنۡ عَزۡمِ ٱلۡأُمُورِ ١٧

១៧-ឱកូនសម្លាញ់! ចូរឯងប្រតិបត្តិសឡាត និងប្រើគ្នាឱ្យធ្វើប្រការល្អ និងហាមឃាត់គ្នាអំពីប្រការអាក្រក់ ហើយនិងអត់ធ្មត់ទៅលើអ្វីដែលកើតឡើងចំពោះឯង។ ពិតប្រាកដណាស់ ទាំងនោះគឺនៅក្នុងចំណោមបទបញ្ជាដែលចាំបាច់ត្រូវអនុវត្ត។

وَلَا تُصَعِّرۡ خَدَّكَ لِلنَّاسِ وَلَا تَمۡشِ فِي ٱلۡأَرۡضِ مَرَحًاۖ إِنَّ ٱللَّهَ لَا يُحِبُّ كُلَّ مُخۡتَالٖ فَخُورٖ ١٨

១៨-ហើយចូរឯងកុំងាកមុខចេញពីមនុស្សលោក(ដោយអំនួត) និងកុំដើរនៅលើផែនដីនេះដោយក្រអឺតក្រទមឱ្យសោះ។ ពិតប្រាកដណាស់ អល់ឡោះមិនស្រឡាញ់អ្នកដែលក្រអឺតក្រទមនិងអំនួតនោះឡើយ។

وَٱقۡصِدۡ فِي مَشۡيِكَ وَٱغۡضُضۡ مِن صَوۡتِكَۚ إِنَّ أَنكَرَ ٱلۡأَصۡوَٰتِ لَصَوۡتُ ٱلۡحَمِيرِ ١٩

១៩-ហើយចូរឯងបន្ទន់ឥរិយាបថក្នុងដំណើររបស់ឯង និងបន្ទន់សំឡេងរបស់ឯង។ ពិតប្រាកដណាស់ សំឡេងទាំងឡាយដ៏អាក្រក់នោះ គឺជាសំឡេងសត្វលា។

أَلَمۡ تَرَوۡاْ أَنَّ ٱللَّهَ سَخَّرَ لَكُم مَّا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِ وَأَسۡبَغَ عَلَيۡكُمۡ نِعَمَهُۥ ظَٰهِرَةٗ وَبَاطِنَةٗۗ وَمِنَ ٱلنَّاسِ مَن يُجَٰدِلُ فِي ٱللَّهِ بِغَيۡرِ عِلۡمٖ وَلَا هُدٗى وَلَا كِتَٰبٖ مُّنِيرٖ ٢٠

២០-តើពួកអ្នកមិនឃើញទេឬ ពិតប្រាកដណាស់អល់ឡោះបានបង្កើតអ្វីដែលមាននៅលើមេឃជាច្រើនជាន់ និងអ្វីដែលមាននៅលើផែនដីជាប្រយោជន៍សម្រាប់ពួកអ្នក ហើយទ្រង់បានបំពេញនៀកម៉ាត់របស់ទ្រង់ដល់ពួកអ្នកទាំងផ្នែកខាងក្រៅ(ខ្លួនប្រាណ) និងផ្នែកខាងក្នុង(ចិត្តគំនិត)នោះ? ហើយក្នុងចំណោមមនុស្សលោក មានអ្នកខ្លះឈ្លោះប្រកែកគ្នាក្នុងរឿងអល់ឡោះដោយគ្មានចំណេះដឹងនិងគ្មានការចង្អុលបង្ហាញ ហើយនិងគ្មានគម្ពីរបំភ្លឺការពិត។

وَإِذَا قِيلَ لَهُمُ ٱتَّبِعُواْ مَآ أَنزَلَ ٱللَّهُ قَالُواْ بَلۡ نَتَّبِعُ مَا وَجَدۡنَا عَلَيۡهِ ءَابَآءَنَآۚ أَوَلَوۡ كَانَ ٱلشَّيۡطَٰنُ يَدۡعُوهُمۡ إِلَىٰ عَذَابِ ٱلسَّعِيرِ ٢١

២១-ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកគេថាៈ ចូរពួកអ្នកដើរតាមអ្វី(គម្ពីរគួរអាន)ដែលអល់ឡោះបានបញ្ចុះមក នោះ ពួកគេបានឆ្លើយថាៈ ផ្ទុយទៅវិញ ពួកយើងកំពុងតែដើរតាមអ្វីដែលពួកយើងទទួលបានពីដូនតារបស់ពួកយើង។ (តើពួកគេធ្វើតាមដែរឬ)បើទោះបីជាស៊ៃតនអូសទាញពួកគេទៅកាន់ភ្លើងនរកដែលឆេះសន្ធោសន្ធៅនោះ?

۞ وَمَن يُسۡلِمۡ وَجۡهَهُۥٓ إِلَى ٱللَّهِ وَهُوَ مُحۡسِنٞ

២២-ហើយអ្នកណាដែលប្រគល់ខ្លួនរបស់គេទៅចំពោះ

فَقَدِ ٱسْتَمْسَكَ بِٱلْعُرْوَةِ ٱلْوُثْقَىٰ ۗ وَإِلَى ٱللَّهِ عَـٰقِبَةُ ٱلْأُمُورِ ﴿٢٢﴾

អល់ឡោះដោយគេជាអ្នកដែលសាងអំពើល្អនោះ គេពិតជាបាន ប្រកាន់ខ្ជាប់នឹងខ្សែដ៏រឹងមាំ(គម្ពីរគួរអាន)។ ហើយលទ្ធផលចុង ក្រោយនៃកិច្ចការទាំងអស់នឹងវិលត្រឡប់ទៅកាន់អល់ឡោះវិញ។

وَمَن كَفَرَ فَلَا يَحْزُنكَ كُفْرُهُۥٓ ۚ إِلَيْنَا مَرْجِعُهُمْ فَنُنَبِّئُهُم بِمَا عَمِلُوٓا۟ ۚ إِنَّ ٱللَّهَ عَلِيمٌۢ بِذَاتِ ٱلصُّدُورِ ﴿٢٣﴾

២៣-តែអ្នកណាហើយបានប្រឆាំងវិញនោះ ចូរកុំឱ្យការប្រឆាំង របស់គេធ្វើឱ្យអ្នក(មូហាំម៉ាត់)ព្រួយបារម្ភឱ្យសោះ។ កន្លែងវិល ត្រឡប់របស់ពួកគេគឺមកកាន់យើងតែមួយគត់។ ហើយយើងនឹង ប្រាប់ពួកគេនូវអ្វីដែលពួកគេបានប្រព្រឹត្ត។ ពិតប្រាកដណាស់ អល់ឡោះមហាដឹងនូវអ្វីដែលមាននៅក្នុងចិត្ត(របស់ពួកគេ)។

نُمَتِّعُهُمْ قَلِيلًا ثُمَّ نَضْطَرُّهُمْ إِلَىٰ عَذَابٍ غَلِيظٍ ﴿٢٤﴾

២៤-យើងឱ្យពួកគេសប្បាយរីករាយ(នៅក្នុងលោកិយ)បន្តិច បន្តួចប៉ុណ្ណោះ។ បន្ទាប់មកយើងនឹងរុញច្រានពួកគេទៅកាន់ទារុណ- កម្មដ៏ឃោរឃៅ(នៅថ្ងៃបរលោក)។

وَلَئِن سَأَلْتَهُم مَّنْ خَلَقَ ٱلسَّمَـٰوَٰتِ وَٱلْأَرْضَ لَيَقُولُنَّ ٱللَّهُ ۚ قُلِ ٱلْحَمْدُ لِلَّهِ ۚ بَلْ أَكْثَرُهُمْ لَا يَعْلَمُونَ ﴿٢٥﴾

២៥-ហើយប្រសិនបើអ្នក(មូហាំម៉ាត់)សួរពួកគេ(ពួកមូស្ហរីគីន) ថាៈ តើអ្នកណាដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដី? ពួកគេពិតជានឹងឆ្លើយថាៈ គឺអល់ឡោះ។ ចូរអ្នកពោលថាៈ រាល់ ការសរសើរគឺចំពោះអល់ឡោះ។ ផ្ទុយទៅវិញ ពួកគេភាគច្រើន មិនដឹងឡើយ។

لِلَّهِ مَا فِى ٱلسَّمَـٰوَٰتِ وَٱلْأَرْضِ ۚ إِنَّ ٱللَّهَ هُوَ ٱلْغَنِىُّ ٱلْحَمِيدُ ﴿٢٦﴾

២៦-អ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងផែនដី គឺជា កម្មសិទ្ធិរបស់អល់ឡោះ។ ពិតប្រាកដណាស់ អល់ឡោះមហាមាន លើសលប់ និងជាទីកោតសរសើរ។

وَلَوْ أَنَّمَا فِى ٱلْأَرْضِ مِن شَجَرَةٍ أَقْلَـٰمٌ وَٱلْبَحْرُ يَمُدُّهُۥ مِنۢ بَعْدِهِۦ سَبْعَةُ أَبْحُرٍ مَّا نَفِدَتْ كَلِمَـٰتُ ٱللَّهِ ۗ إِنَّ ٱللَّهَ عَزِيزٌ حَكِيمٌ ﴿٢٧﴾

២៧-ហើយប្រសិនបើដើមឈើទាំងអស់នៅលើផែនដីនេះគឺជា ស្លាបប៉ាកា និងទឹកសមុទ្រ(គឺជាទឹកខ្មៅ) ដែលក្រោយពីនោះមាន សមុទ្រប្រាំពីរទៀតថែមពីលើវា(បន្ទាប់ពីវាស្ងួតអស់)ក៏ដោយ ក៏នៅ តែមិនគ្រប់គ្រាន់(ក្នុងការកត់ត្រា)បន្ទូលទាំងឡាយរបស់អល់ឡោះ ដែរ។ ពិតប្រាកដណាស់អល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

مَّا خَلْقُكُمْ وَلَا بَعْثُكُمْ إِلَّا كَنَفْسٍ وَٰحِدَةٍ ۗ إِنَّ ٱللَّهَ سَمِيعٌۢ بَصِيرٌ ﴿٢٨﴾

២៨-ការបង្កើតពួកអ្នក និងការធ្វើឱ្យពួកអ្នករស់ឡើងវិញ(នា ថ្ងៃបរលោក) គឺដូចជាការបង្កើតជីវិតមួយប៉ុណ្ណោះ(សម្រាប់ អល់ឡោះ)។ ពិតប្រាកដណាស់ អល់ឡោះមហាឮ មហាឃើញ។

២៩-តើអ្នកមិនបានឃើញទេឬ ពិតប្រាកដណាស់អល់ឡោះ បញ្ចូលពេលយប់ទៅក្នុងពេលថ្ងៃ និងបញ្ចូលពេលថ្ងៃទៅក្នុងពេលយប់វិញ ។ ហើយទ្រង់បានបញ្ជាព្រះអាទិត្យ និងព្រះច័ន្ទឱ្យវាទាំងពីរដើរទៅតាមគន្លងរហូតដល់ពេលកំណត់ ។ ហើយពិតប្រាកដណាស់ អល់ឡោះដឹងជ្រួតជ្រាបបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

៣០-នោះដោយសារតែអល់ឡោះគឺជាម្ចាស់ដ៏ពិតប្រាកដ ។ ហើយអ្វីដែលពួកគេបួងសួងសុំផ្សេងពីទ្រង់នោះគឺជាប្រការមោឃៈ ។ ហើយពិតប្រាកដណាស់ អល់ឡោះមហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម ។

៣១-តើពួកអ្នកមិនបានឃើញទេឬ ពិតប្រាកដណាស់ នាវាដែលរត់នៅលើសមុទ្រជានៀកម៉ាត់របស់អល់ឡោះ ដើម្បីទ្រង់បង្ហាញពួកអ្នកនូវភស្តុតាងមួយចំនួនរបស់ទ្រង់នោះ? ពិតប្រាកដណាស់នៅក្នុងរឿងនោះគឺជាភស្តុតាងៗសម្រាប់រាល់អ្នកដែលអត់ធ្មត់និងដឹងគុណ ។

៣២-ហើយនៅពេលដែលរលកសមុទ្រគ្របដណ្តប់លើពួកគេ (ពួកមូស្ហរិគីន) ដូចជាដុំពពកដ៏ងងឹតនោះ ពួកគេបានបួងសួងសុំអល់ឡោះដោយចិត្តស្មោះសក្នុងការប្រណិបត្តិចំពោះទ្រង់ ។ តែនៅពេលដែលទ្រង់បានសង្គ្រោះពួកគេឱ្យដល់ត្រើយ គឺពួកគេមួយចំនួនមិនសូវដឹងគុណឡើយ ។ ហើយគ្មានអ្នកណាបដិសេធនឹងអាយ៉ាត់ៗរបស់យើងក្រៅពីពួកដែលក្បត់ និងប្រឆាំងឡើយ ។

៣៣-ឱមនុស្សលោក! ចូរពួកអ្នកកោតខ្លាចម្ចាស់របស់ពួកអ្នក និងខ្លាចថ្ងៃមួយដែលឪពុកមិនអាចជួយកូនរបស់គេ ហើយកូនមិនអាចជួយអ្វីដល់ឪពុករបស់គេបាន ។ ពិតប្រាកដណាស់ ការសន្យារបស់អល់ឡោះគឺជាការពិត ។ ដូច្នេះ ចូរកុំឱ្យជីវិតលោកិយបោកប្រាស់ពួកអ្នក និងកុំឱ្យពួកបោកប្រាស់( ស្ហៃតន ជិន និងមនុស្ស) បោកប្រាស់ពួកអ្នកប្រឆាំងនឹងអល់ឡោះឱ្យសោះ ។

៣៤-ពិតប្រាកដណាស់ អល់ឡោះជាអ្នកដឹងនូវដំណឹងនៃថ្ងៃបរលោក និងជាអ្នកបញ្ចុះទឹកភ្លៀង ។ ហើយទ្រង់ជាអ្នកដឹងនូវអ្វីដែលមានក្នុងស្បូន ។ ហើយគ្មានបុគ្គលណាម្នាក់ដឹងថា តើអ្វីដែល

أَلَمْ تَرَ أَنَّ ٱللَّهَ يُولِجُ ٱلَّيْلَ فِى ٱلنَّهَارِ وَيُولِجُ
ٱلنَّهَارَ فِى ٱلَّيْلِ وَسَخَّرَ ٱلشَّمْسَ وَٱلْقَمَرَ
كُلٌّ يَجْرِىٓ إِلَىٰٓ أَجَلٍ مُّسَمًّى وَأَنَّ ٱللَّهَ بِمَا
تَعْمَلُونَ خَبِيرٌ ٢٩

ذَٰلِكَ بِأَنَّ ٱللَّهَ هُوَ ٱلْحَقُّ وَأَنَّ مَا يَدْعُونَ مِن
دُونِهِ ٱلْبَٰطِلُ وَأَنَّ ٱللَّهَ هُوَ ٱلْعَلِىُّ ٱلْكَبِيرُ ٣٠

أَلَمْ تَرَ أَنَّ ٱلْفُلْكَ تَجْرِى فِى ٱلْبَحْرِ بِنِعْمَتِ
ٱللَّهِ لِيُرِيَكُم مِّنْ ءَايَٰتِهِۦٓ إِنَّ فِى ذَٰلِكَ لَءَايَٰتٍ
لِّكُلِّ صَبَّارٍ شَكُورٍ ٣١

وَإِذَا غَشِيَهُم مَّوْجٌ كَٱلظُّلَلِ دَعَوُا۟ ٱللَّهَ مُخْلِصِينَ
لَهُ ٱلدِّينَ فَلَمَّا نَجَّىٰهُمْ إِلَى ٱلْبَرِّ فَمِنْهُم
مُّقْتَصِدٌ وَمَا يَجْحَدُ بِـَٔايَٰتِنَآ إِلَّا كُلُّ خَتَّارٍ
كَفُورٍ ٣٢

يَٰٓأَيُّهَا ٱلنَّاسُ ٱتَّقُوا۟ رَبَّكُمْ وَٱخْشَوْا۟ يَوْمًا لَّا
يَجْزِى وَالِدٌ عَن وَلَدِهِۦ وَلَا مَوْلُودٌ هُوَ جَازٍ
عَن وَالِدِهِۦ شَيْـًٔا إِنَّ وَعْدَ ٱللَّهِ حَقٌّ فَلَا
تَغُرَّنَّكُمُ ٱلْحَيَوٰةُ ٱلدُّنْيَا وَلَا يَغُرَّنَّكُم
بِٱللَّهِ ٱلْغَرُورُ ٣٣

إِنَّ ٱللَّهَ عِندَهُۥ عِلْمُ ٱلسَّاعَةِ وَيُنَزِّلُ ٱلْغَيْثَ
وَيَعْلَمُ مَا فِى ٱلْأَرْحَامِ وَمَا تَدْرِى نَفْسٌ
مَّاذَا تَكْسِبُ غَدًا وَمَا تَدْرِى نَفْسٌۢ بِأَىِّ

أَرۡضٖ تَمُوتُۚ إِنَّ ٱللَّهَ عَلِيمٌ خَبِيرُۢ ٣٤

គេនឹងទទួលបាននៅថ្ងៃស្អែកឡើយ ។ ហើយក៏គ្មានបុគ្គលណាម្នាក់ដឹងថា តើគេនឹងស្លាប់នៅលើទឹកដីណាដែរ ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹង មហាជ្រួតជ្រាប ។

## سورة السجدة

## ជំពូកអាស់សាជដះ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

الٓمٓ ١

១-អាលីហ្វ ឡាម មីម ។

تَنزِيلُ ٱلۡكِتَٰبِ لَا رَيۡبَ فِيهِ مِن رَّبِّ
ٱلۡعَٰلَمِينَ ٢

២-ការបញ្ចុះគម្ពីរ(គួរអាន)គឺមកពីម្ចាស់គ្រប់គ្រងពិភពទាំងអស់ដោយគ្មានការសង្ស័យក្នុងវាឡើយ ។

أَمۡ يَقُولُونَ ٱفۡتَرَىٰهُۚ بَلۡ هُوَ ٱلۡحَقُّ مِن رَّبِّكَ
لِتُنذِرَ قَوۡمٗا مَّآ أَتَىٰهُم مِّن نَّذِيرٖ مِّن قَبۡلِكَ
لَعَلَّهُمۡ يَهۡتَدُونَ ٣

៣-ឬមួយពួកគេនិយាយថាៈ គេ(មូហាំម៉ាត់)បានប្រឌិតវាឡើង? ផ្ទុយទៅវិញ វាគឺជាការពិតមកពីម្ចាស់របស់អ្នក ដើម្បីឱ្យអ្នកដាស់តឿនព្រមានចំពោះក្រុមមួយដែលគ្មានអ្នកដាស់តឿនព្រមានណាមួយពីមុនអ្នកមកដល់ពួកគេឡើយ ។ សង្ឃឹមថាពួកគេនឹងទទួលបានការចង្អុលបង្ហាញ ។

ٱللَّهُ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ وَمَا
بَيۡنَهُمَا فِي سِتَّةِ أَيَّامٖ ثُمَّ ٱسۡتَوَىٰ عَلَى
ٱلۡعَرۡشِۖ مَا لَكُم مِّن دُونِهِۦ مِن وَلِيّٖ وَلَا
شَفِيعٍۚ أَفَلَا تَتَذَكَّرُونَ ٤

៤-អល់ឡោះគឺជាអ្នកដែលបានបង្កើតមេឃជាច្រើនជាន់និងផែនដី ហើយនិងអ្វីៗដែលនៅចន្លោះវាទាំងពីរក្នុងរយៈពេលប្រាំមួយថ្ងៃ ។ ក្រោយមកទ្រង់នៅលើអារ៉ស្ហ ។ ពួកអ្នកគ្មានអ្នកគាំពារនិងគ្មានអ្នកអន្តរាគមន៍ផ្សេងពីទ្រង់ឡើយ ។ ដូច្នេះតើពួកអ្នកមិនចងចាំទេឬ?

يُدَبِّرُ ٱلۡأَمۡرَ مِنَ ٱلسَّمَآءِ إِلَى ٱلۡأَرۡضِ ثُمَّ
يَعۡرُجُ إِلَيۡهِ فِي يَوۡمٖ كَانَ مِقۡدَارُهُۥٓ أَلۡفَ سَنَةٖ
مِّمَّا تَعُدُّونَ ٥

៥-ទ្រង់រៀបចំភារកិច្ចពីលើមេឃរហូតដល់ផែនដី ក្រោយមកភារកិច្ចនោះនឹងឡើងទៅកាន់ទ្រង់វិញនៅថ្ងៃមួយដែលរយៈពេលរបស់វាស្មើនឹងមួយពាន់ឆ្នាំតាមអ្វីដែលពួកអ្នករាប់ ។

ذَٰلِكَ عَٰلِمُ ٱلۡغَيۡبِ وَٱلشَّهَٰدَةِ ٱلۡعَزِيزُ
ٱلرَّحِيمُ ٦

៦-នោះគឺជាអ្នកដែលដឹងនូវប្រការអាថ៌កំបាំង និងប្រការលាតត្រដាងដែលទ្រង់មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់ ។

ٱلَّذِيٓ أَحۡسَنَ كُلَّ شَيۡءٍ خَلَقَهُۥۖ وَبَدَأَ خَلۡقَ

៧-គឺជាអ្នកដែលបានធ្វើឱ្យរាល់អ្វីៗដែលទ្រង់បានបង្កើតវាមក

ល្អឥតខ្ចោះ។ ហើយទ្រង់បានចាប់ផ្តើមបង្កើតមនុស្សលោកពីដីឥដ្ឋ។

៨-ក្រោយមក ទ្រង់បានបង្កើតពូជពង្សរបស់គេចេញពីទឹកកាម ដែលគ្មានតម្លៃ ។

៩-បន្ទាប់មក ទ្រង់បានធ្វើឱ្យគេមានរូបរាងពេញលេញ ហើយ ទ្រង់ក៏បានផ្លុំបញ្ចូលព្រលឹងដែលទ្រង់បានបង្កើតនោះទៅក្នុងវា។ ហើយទ្រង់បានធ្វើឱ្យពួកអ្នកស្តាប់ឮ និងមើលឃើញ និងមានចិត្ត (ចេះគិតពិចារណា) ។ អ្វីដែលពួកអ្នកដឹងគុណគឺតិចតួចបំផុត។

១០-ហើយពួកគេបាននិយាយថា: នៅពេលដែលពួកយើងបាន រលាយទៅក្នុងដីហើយនោះ តើពួកយើងពិតជាត្រូវគេបង្កើតឡើង សាជាថ្មីម្តងទៀតឬ? ផ្ទុយទៅវិញ ពួកគេជាពួកដែលបដិសេធនឹង ជំនួបជាមួយម្ចាស់របស់ពួកគេ។

១១-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ម៉ាឡាអ៊ីកាត់យកជីវិត មនុស្សដែលត្រូវគេបញ្ជូនទៅកាន់ពួកអ្នកនឹងយកជីវិតពួកអ្នក។ បន្ទាប់មកពួកអ្នកនឹងត្រូវវិលត្រឡប់ទៅកាន់ម្ចាស់របស់ពួកអ្នក វិញ។

១២-ហើយ(គួរឱ្យរន្ធត់ជាទីបំផុត) ប្រសិនបើអ្នកឃើញនៅ ពេលដែលពួកធ្វើអំពើអាក្រក់ឱនក្បាលរបស់ពួកគេនៅចំពោះមុខ ម្ចាស់របស់ពួកគេ(ដោយនិយាយថា) ឱម្ចាស់របស់ពួកយើង! ពួក យើងបានឃើញ និងបានឮហើយ ដូច្នេះសូមទ្រង់មេត្តាបញ្ជូនពួក យើងឱ្យវិលត្រឡប់ទៅ(លោកិយ)វិញផង ពួកយើងនឹងធ្វើអំពើ ល្អត្រឹមត្រូវ។ ពិតប្រាកដណាស់ ពួកយើងជាអ្នកជឿជាក់បំផុត។

១៣-ហើយប្រសិនបើយើងមានចេតនា យើងពិតជានឹងប្រទាន ដល់មនុស្សគ្រប់រូបនូវការចង្អុលបង្ហាញដល់គេជាមិនខាន។ ក៏ប៉ុន្តែ បន្ទូលរបស់យើងបានសម្រេចរួចហើយថា: យើងនឹងដាក់បំពេញ នរកជើហាន់ណាំអំពីជិន និងមនុស្សលោកជាមួយគ្នាទាំងអស់។

១៤-ដូច្នេះ ចូរពួកអ្នកភ្លក្សរសជាតិ(ទារុណកម្ម) ដោយសារតែ អ្វីដែលពួកអ្នកបានភ្លេចនូវជំនួបនៃថ្ងៃរបស់ពួកអ្នកនេះចុះ ពិត ប្រាកដណាស់ យើងក៏បានភ្លេចពួកអ្នកវិញដែរ។ ហើយចូរពួកអ្នក

ٱلۡإِنسَٰنِ مِن طِينٖ ﴿٧﴾
ثُمَّ جَعَلَ نَسۡلَهُۥ مِن سُلَٰلَةٖ مِّن مَّآءٖ مَّهِينٖ ﴿٨﴾
ثُمَّ سَوَّىٰهُ وَنَفَخَ فِيهِ مِن رُّوحِهِۦۖ وَجَعَلَ لَكُمُ ٱلسَّمۡعَ وَٱلۡأَبۡصَٰرَ وَٱلۡأَفۡـِٔدَةَۚ قَلِيلٗا مَّا تَشۡكُرُونَ ﴿٩﴾
وَقَالُوٓاْ أَءِذَا ضَلَلۡنَا فِي ٱلۡأَرۡضِ أَءِنَّا لَفِي خَلۡقٖ جَدِيدِۭۚ بَلۡ هُم بِلِقَآءِ رَبِّهِمۡ كَٰفِرُونَ ﴿١٠﴾
۞ قُلۡ يَتَوَفَّىٰكُم مَّلَكُ ٱلۡمَوۡتِ ٱلَّذِي وُكِّلَ بِكُمۡ ثُمَّ إِلَىٰ رَبِّكُمۡ تُرۡجَعُونَ ﴿١١﴾
وَلَوۡ تَرَىٰٓ إِذِ ٱلۡمُجۡرِمُونَ نَاكِسُواْ رُءُوسِهِمۡ عِندَ رَبِّهِمۡ رَبَّنَآ أَبۡصَرۡنَا وَسَمِعۡنَا فَٱرۡجِعۡنَا نَعۡمَلۡ صَٰلِحًا إِنَّا مُوقِنُونَ ﴿١٢﴾
وَلَوۡ شِئۡنَا لَأٓتَيۡنَا كُلَّ نَفۡسٍ هُدَىٰهَا وَلَٰكِنۡ حَقَّ ٱلۡقَوۡلُ مِنِّي لَأَمۡلَأَنَّ جَهَنَّمَ مِنَ ٱلۡجِنَّةِ وَٱلنَّاسِ أَجۡمَعِينَ ﴿١٣﴾
فَذُوقُواْ بِمَا نَسِيتُمۡ لِقَآءَ يَوۡمِكُمۡ هَٰذَآ إِنَّا نَسِينَٰكُمۡۖ وَذُوقُواْ عَذَابَ ٱلۡخُلۡدِ بِمَا

كُنتُمۡ تَعۡمَلُونَ ١٤

ភ្លក្សរសជាតិទារុណកម្មដ៏យូរអង្វែងដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត។

إِنَّمَا يُؤۡمِنُ بِـَٔايَٰتِنَا ٱلَّذِينَ إِذَا ذُكِّرُواْ بِهَا خَرُّواْ سُجَّدٗا وَسَبَّحُواْ بِحَمۡدِ رَبِّهِمۡ وَهُمۡ لَا يَسۡتَكۡبِرُونَ ۩ ١٥

១៥-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿនឹងអាយ៉ាត់ៗរបស់យើង នៅពេលដែលមានគេរំលឹកពួកគេអំពីវា គឺពួកគេក្រាបស៊ូជូត និងលើកតម្កើងសរសើរចំពោះម្ចាស់របស់ពួកគេ ដោយពួកគេមិនក្រអឺតក្រទមឡើយ ។

تَتَجَافَىٰ جُنُوبُهُمۡ عَنِ ٱلۡمَضَاجِعِ يَدۡعُونَ رَبَّهُمۡ خَوۡفٗا وَطَمَعٗا وَمِمَّا رَزَقۡنَٰهُمۡ يُنفِقُونَ ١٦

១៦-ខ្លួនពួកគេបានក្រោកចេញពីកន្លែងគេងទៅបួងសួងសុំម្ចាស់របស់ពួកគេដោយការភ័យខ្លាចនិងក្តីសង្ឃឹម ព្រមទាំងពួកគេបានបរិច្ចាគនូវអ្វីដែលយើងបានប្រទានលាភសក្ការៈដល់ពួកគេ។

فَلَا تَعۡلَمُ نَفۡسٞ مَّآ أُخۡفِيَ لَهُم مِّن قُرَّةِ أَعۡيُنٖ جَزَآءَۢ بِمَا كَانُواْ يَعۡمَلُونَ ١٧

១៧-គ្មានអ្នកណាម្នាក់ដឹងពីអ្វីដែលគេលាក់ទុកសម្រាប់ពួកគេពីភាពសប្បាយរីករាយ ជាការតបស្នងទៅនឹងអ្វីដែលពួកគេប្រព្រឹត្តឡើយ។

أَفَمَن كَانَ مُؤۡمِنٗا كَمَن كَانَ فَاسِقٗاۚ لَّا يَسۡتَوُۥنَ ١٨

១៨-ដូច្នេះ តើអ្នកដែលមានជំនឿដូចអ្នកដែលល្មើសនឹងបទបញ្ញារបស់អល់ឡោះដែរឬ? ពួកគេមិនដូចគ្នាឡើយ។

أَمَّا ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ فَلَهُمۡ جَنَّٰتُ ٱلۡمَأۡوَىٰ نُزُلَۢا بِمَا كَانُواْ يَعۡمَلُونَ ١٩

១៩-រីឯបណ្តាអ្នកដែលមានជំនឿនិងបានសាងអំពើល្អត្រឹមត្រូវនោះ ពួកគេនឹងទទួលបានឋានសួគ៌ជាកន្លែងស្នាក់នៅ ដែលជាការតបស្នងនូវអ្វីដែលពួកគេធ្លាប់បានសាង។

وَأَمَّا ٱلَّذِينَ فَسَقُواْ فَمَأۡوَىٰهُمُ ٱلنَّارُۖ كُلَّمَآ أَرَادُوٓاْ أَن يَخۡرُجُواْ مِنۡهَآ أُعِيدُواْ فِيهَا وَقِيلَ لَهُمۡ ذُوقُواْ عَذَابَ ٱلنَّارِ ٱلَّذِي كُنتُم بِهِۦ تُكَذِّبُونَ ٢٠

២០-ចំណែកឯពួកដែលល្មើសនឹងបទបញ្ញារបស់អល់ឡោះវិញ កន្លែងស្នាក់នៅរបស់ពួកគេគឺឋាននរក។ រាល់ពេលដែលពួកគេចង់ចេញពីវា ពួកគេត្រូវបានគេបញ្ជូនទៅក្នុងវាវិញ ហើយមានគេពោលទៅកាន់ពួកគេថាៈ ចូរពួកអ្នកភ្លក្សរសជាតិទារុណកម្មនៃភ្លើងនរកដែលពួកអ្នកធ្លាប់បានបដិសេធនឹងវាចុះ ។

وَلَنُذِيقَنَّهُم مِّنَ ٱلۡعَذَابِ ٱلۡأَدۡنَىٰ دُونَ ٱلۡعَذَابِ ٱلۡأَكۡبَرِ لَعَلَّهُمۡ يَرۡجِعُونَ ٢١

២១-ហើយយើងពិតជានឹងឱ្យពួកគេភ្លក្សរសជាតិទារុណកម្មធុនស្រាល( ក្នុងលោកិយ) មុនទារុណកម្មធ្ងន់ធ្ងរ( នៅថ្ងៃបរលោក) ។ សង្ឃឹមថា ពួកគេនឹងវិលត្រឡប់( សុំអភ័យទោសពីទ្រង់)វិញ។

وَمَنْ أَظْلَمُ مِمَّن ذُكِّرَ بِـَٔايَـٰتِ رَبِّهِۦ ثُمَّ أَعْرَضَ عَنْهَآ ۚ إِنَّا مِنَ ٱلْمُجْرِمِينَ مُنتَقِمُونَ ٢٢

២២-ហើយតើមានអ្នកណាដែលបំពានជាងអ្នកដែលត្រូវគេរំលឹកពីអាយ៉ាត់ៗនៃម្ចាស់របស់គេ បន្ទាប់មកគេបានបែរចេញពីវាទៀតនោះ? ហើយពិតប្រាកដណាស់ យើងជាអ្នកផ្ដន្ទាទោសចំពោះពួកដែលប្រព្រឹត្តអំពើអាក្រក់។

وَلَقَدْ ءَاتَيْنَا مُوسَى ٱلْكِتَـٰبَ فَلَا تَكُن فِى مِرْيَةٍ مِّن لِّقَآئِهِۦ ۖ وَجَعَلْنَـٰهُ هُدًى لِّبَنِىٓ إِسْرَٰٓءِيلَ ٢٣

២៣-ហើយជាការពិតណាស់យើងបានផ្ដល់គម្ពីរ(តាវ៉រ៉ត)ឱ្យមូសា។ ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)កុំមានការសង្ស័យពីជំនួបនឹងគេ (ជំនួបរវាងមូហាំម៉ាត់ និងមូសាពេលឡើងទៅលើមេឃ)ឱ្យសោះ។ ហើយយើងបានបង្កើតវា(គម្ពីរតាវ៉រ៉ត)ទុកជាការចង្អុលបង្ហាញដល់អំបូរអ៊ីស្រាអែល។

وَجَعَلْنَا مِنْهُمْ أَئِمَّةً يَهْدُونَ بِأَمْرِنَا لَمَّا صَبَرُوا۟ ۖ وَكَانُوا۟ بِـَٔايَـٰتِنَا يُوقِنُونَ ٢٤

២៤-ហើយយើងបានធ្វើឱ្យពួកគេមួយចំនួនក្លាយទៅជាអ្នកដឹកនាំ ដើម្បីចង្អុលបង្ហាញផ្លូវ(ដល់មនុស្សលោក)តាមបទបញ្ជារបស់យើងនៅពេលដែលពួកគេបានអត់ធ្មត់។ ហើយពួកគេជឿយ៉ាងច្បាស់លើអាយ៉ាត់ៗរបស់យើង។

إِنَّ رَبَّكَ هُوَ يَفْصِلُ بَيْنَهُمْ يَوْمَ ٱلْقِيَـٰمَةِ فِيمَا كَانُوا۟ فِيهِ يَخْتَلِفُونَ ٢٥

២៥-ពិតប្រាកដណាស់ ម្ចាស់របស់អ្នកនឹងកាត់សេចក្ដីរវាងពួកគេ(អ្នកមានជំនឿ និងអ្នកគ្មានជំនឿ)នៅថ្ងៃបរលោកនូវអ្វីដែលពួកគេធ្លាប់ខ្វែងគំនិតគ្នាអំពីវា(កិច្ចការសាសនា) ។

أَوَلَمْ يَهْدِ لَهُمْ كَمْ أَهْلَكْنَا مِن قَبْلِهِم مِّنَ ٱلْقُرُونِ يَمْشُونَ فِى مَسَـٰكِنِهِمْ ۚ إِنَّ فِى ذَٰلِكَ لَـَٔايَـٰتٍ ۖ أَفَلَا يَسْمَعُونَ ٢٦

២៦-តើវាមិនទាន់ច្បាស់សម្រាប់ពួកគេទេឬ ដែលយើងបានបំផ្លាញមនុស្សជាច្រើនជំនាន់មុនពួកគេ ដែលពួកគេធ្វើដំណើរឆ្លងកាត់លំនៅដ្ឋានរបស់ពួកគេនោះ? ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងជាច្រើន។ ដូច្នេះ តើពួកគេមិនស្ដាប់ឮទេឬ?

أَوَلَمْ يَرَوْا۟ أَنَّا نَسُوقُ ٱلْمَآءَ إِلَى ٱلْأَرْضِ ٱلْجُرُزِ فَنُخْرِجُ بِهِۦ زَرْعًا تَأْكُلُ مِنْهُ أَنْعَـٰمُهُمْ وَأَنفُسُهُمْ ۖ أَفَلَا يُبْصِرُونَ ٢٧

២៧-តើពួកគេមិនឃើញទេឬ យើងបានបញ្ជូនទឹកភ្លៀងទៅកាន់ដីដែលហួតហែង ហើយដោយសារទឹកភ្លៀងនោះយើងបណ្ដុះរុក្ខជាតិដែលសត្វពាហនៈរបស់ពួកគេ និងខ្លួនពួកគេផ្ទាល់ទទួលទានអំពីវានោះ? ដូច្នេះ តើពួកគេមិនឃើញទេឬ?

وَيَقُولُونَ مَتَىٰ هَـٰذَا ٱلْفَتْحُ إِن كُنتُمْ صَـٰدِقِينَ ٢٨

២៨-ហើយពួកគេនិយាយថាៈ តើការកាត់សេចក្ដីនេះ(ថ្ងៃបរលោក)នឹងមកដល់នៅពេលណា ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតនោះ?

قُلۡ يَوۡمَ ٱلۡفَتۡحِ لَا يَنفَعُ ٱلَّذِينَ كَفَرُوٓاْ إِيمَٰنُهُمۡ وَلَا هُمۡ يُنظَرُونَ ﴿٢٩﴾

២៩-ចូរអ្នក(មូហាំម៉ាត់)ពោលថា: នៅថ្ងៃកាត់សេចក្ដីពួកដែលប្រឆាំងនោះ ជំនឿរបស់ពួកគេគ្មានផលប្រយោជន៍អ្វីឡើយ ហើយពួកគេក៏មិនត្រូវគេពន្យារពេល(ឱ្យសារភាពកំហុស)ដែរ។

فَأَعۡرِضۡ عَنۡهُمۡ وَٱنتَظِرۡ إِنَّهُم مُّنتَظِرُونَ ﴿٣٠﴾

៣០-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)ចៀសចេញពីពួកគេ ហើយរង់ចាំ(លទ្ធផលចុងក្រោយ)ចុះ។ ពិតប្រាកដណាស់ ពួកគេក៏កំពុងរង់ចាំដែរ។

## سورة الأحزاب

## ជំពូកអាល់អះហ្សាប

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

يَٰٓأَيُّهَا ٱلنَّبِيُّ ٱتَّقِ ٱللَّهَ وَلَا تُطِعِ ٱلۡكَٰفِرِينَ وَٱلۡمُنَٰفِقِينَۚ إِنَّ ٱللَّهَ كَانَ عَلِيمًا حَكِيمًا ﴿١﴾

១-ឱណាពី(មូហាំម៉ាត់)! ចូរអ្នកកោតខ្លាចអល់ឡោះ ហើយកុំគោរពតាមពួកដែលប្រឆាំងនិងពួកពុតត្បុតឱ្យសោះ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹង មហាគតិបណ្ឌិត។

وَٱتَّبِعۡ مَا يُوحَىٰٓ إِلَيۡكَ مِن رَّبِّكَۚ إِنَّ ٱللَّهَ كَانَ بِمَا تَعۡمَلُونَ خَبِيرًا ﴿٢﴾

២-ហើយចូរអ្នកប្រតិបត្តតាមអ្វីដែលគេផ្ដល់វ៉ាហ៊ីឱ្យអ្នកពីម្ចាស់របស់អ្នក។ ពិតប្រាកដណាស់ អល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកសាង។

وَتَوَكَّلۡ عَلَى ٱللَّهِۚ وَكَفَىٰ بِٱللَّهِ وَكِيلًا ﴿٣﴾

៣-ហើយចូរអ្នកប្រគល់ការទុកចិត្តលើអល់ឡោះ។ គ្រប់គ្រាន់ហើយអល់ឡោះជាអ្នកគាំពារ។

مَّا جَعَلَ ٱللَّهُ لِرَجُلٖ مِّن قَلۡبَيۡنِ فِي جَوۡفِهِۦۚ وَمَا جَعَلَ أَزۡوَٰجَكُمُ ٱلَّٰٓـِٔي تُظَٰهِرُونَ مِنۡهُنَّ أُمَّهَٰتِكُمۡۚ وَمَا جَعَلَ أَدۡعِيَآءَكُمۡ أَبۡنَآءَكُمۡۚ ذَٰلِكُمۡ قَوۡلُكُم بِأَفۡوَٰهِكُمۡۖ وَٱللَّهُ يَقُولُ ٱلۡحَقَّ وَهُوَ يَهۡدِي ٱلسَّبِيلَ ﴿٤﴾

៤-អល់ឡោះមិនបានបង្កើតសម្រាប់មនុស្សម្នាក់ឱ្យមានបេះដូងពីរនៅក្នុងខ្លួនរបស់គេឡើយ។ ហើយទ្រង់មិនបានចាត់ទុកភរិយាពួកអ្នកដែលពួកអ្នកធ្វើហ្ស៊ីហ៊ើរ[1] ពួកនាងនោះជាម្ដាយរបស់ពួកអ្នកឡើយ។ ហើយទ្រង់មិនចាត់ទុកកូនចិញ្ចឹមរបស់ពួកអ្នកជាកូនបង្កើតរបស់ពួកអ្នកឡើយ។ ទាំងនោះគឺជាពាក្យសំដីដែលចេញពីមាត់របស់ពួកអ្នកប៉ុណ្ណោះ។ តែអល់ឡោះមានបន្ទូលពិត និងចង្អុលបង្ហាញមាគ៌ាដែលត្រឹមត្រូវ។

ٱدۡعُوهُمۡ لِأٓبَآئِهِمۡ هُوَ أَقۡسَطُ عِندَ ٱللَّهِۚ فَإِن

៥-ចូរពួកអ្នកហៅពួកគេ(កូនចិញ្ចឹម)តាមត្រកូលឪពុករបស់

---

១-ហ្ស៊ីហ៊ើរ : គឺជាការប្រដូចភរិយាទៅនឹងម្ដាយក្នុងន័យមិនអាចរួមរស់ជាប្ដីប្រពន្ធបាន។

لَّمۡ تَعۡلَمُوٓاْ ءَابَآءَهُمۡ فَإِخۡوَٰنُكُمۡ فِي ٱلدِّينِ
وَمَوَٰلِيكُمۡۚ وَلَيۡسَ عَلَيۡكُمۡ جُنَاحٞ فِيمَآ
أَخۡطَأۡتُم بِهِۦ وَلَٰكِن مَّا تَعَمَّدَتۡ قُلُوبُكُمۡۚ
وَكَانَ ٱللَّهُ غَفُورٗا رَّحِيمًا ٥

ពួកគេ វាគឺយុត្តិធម៌បំផុតចំពោះអល់ឡោះ។ តែប្រសិនបើពួកអ្នកមិនស្គាល់ឪពុក(បង្កើត)របស់ពួកគេទេនោះ (ចូរពួកអ្នកចាត់ទុកពួកគេ)ជាបងប្អូនរបស់ពួកអ្នកនៅក្នុងសាសនា និងជាម៉ាវឡា[1] របស់ពួកអ្នក។ ហើយគ្មានទោសពៃរ៍អ្វីឡើយចំពោះពួកអ្នកនូវអ្វីដែលពួកអ្នកបានធ្វើខុសនឹងវា លើកលែងតែចិត្តរបស់ពួកអ្នកមានចេតនាប៉ុណ្ណោះ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

ٱلنَّبِيُّ أَوۡلَىٰ بِٱلۡمُؤۡمِنِينَ مِنۡ أَنفُسِهِمۡۖ
وَأَزۡوَٰجُهُۥٓ أُمَّهَٰتُهُمۡۗ وَأُوْلُواْ ٱلۡأَرۡحَامِ بَعۡضُهُمۡ
أَوۡلَىٰ بِبَعۡضٖ فِي كِتَٰبِ ٱللَّهِ مِنَ
ٱلۡمُؤۡمِنِينَ وَٱلۡمُهَٰجِرِينَ إِلَّآ أَن تَفۡعَلُوٓاْ
إِلَىٰٓ أَوۡلِيَآئِكُم مَّعۡرُوفٗاۚ كَانَ ذَٰلِكَ
فِي ٱلۡكِتَٰبِ مَسۡطُورٗا ٦

៦-ណាពីគឺជាអ្នកដែលសំខាន់បំផុតចំពោះបណ្តាអ្នកមានជំនឿជាងខ្លួនពួកគេផ្ទាល់ទៅទៀត។ ហើយភរិយាៗរបស់គាត់(ណាពី) គឺជាម្តាយរបស់ពួកគេ[2]។ ហើយអ្នកដែលជាប់សាច់សាលោហិតនឹងគ្នា ពួកគេខ្លះមានសិទ្ធិទទួលមរតកពីគ្នាទៅវិញទៅមកតាមច្បាប់របស់អល់ឡោះជាងបណ្តាអ្នកមានជំនឿ និងអ្នកភៀសខ្លួន(ពីម៉ាក្កះទៅម៉ាឌីណះ) លើកលែងតែពួកអ្នកចង់ធ្វើល្អចំពោះមិត្តជិតស្និទ្ធរបស់ពួកអ្នកប៉ុណ្ណោះ។ រឿងនោះត្រូវបានគេកត់ត្រាទុកនៅក្នុងសៀវភៅកំណត់ត្រា(ឡាវហុលម៉ះហ្វូស) ។

وَإِذۡ أَخَذۡنَا مِنَ ٱلنَّبِيِّـۧنَ مِيثَٰقَهُمۡ وَمِنكَ
وَمِن نُّوحٖ وَإِبۡرَٰهِيمَ وَمُوسَىٰ وَعِيسَى ٱبۡنِ
مَرۡيَمَۖ وَأَخَذۡنَا مِنۡهُم مِّيثَٰقًا غَلِيظٗا ٧

៧-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានទទួលយកពីបណ្តាណាពីនូវកិច្ចសន្យារបស់ពួកគេ និងពីអ្នក(មូហាំម៉ាត់)និងនូហ និងអ៊ីព្រហ៊ីម និងមូសា ហើយនិងអ៊ីសាកូនម៉ារយ៉ាំ។ ហើយយើងបានទទួលយកកិច្ចសន្យាមួយដ៏រឹងមាំពីពួកគេ។

لِّيَسۡـَٔلَ ٱلصَّٰدِقِينَ عَن صِدۡقِهِمۡۚ وَأَعَدَّ
لِلۡكَٰفِرِينَ عَذَابًا أَلِيمٗا ٨

៨-ដើម្បីទ្រង់នឹងសួរបណ្តាអ្នកដែលស្មោះត្រង់(អ្នកនាំសារ) អំពីសច្ចភាពរបស់ពួកគេ។ ហើយទ្រង់បានរៀបចំសម្រាប់ពួកដែលប្រឆាំងនូវទារុណកម្មដ៏ឈឺចាប់។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱذۡكُرُواْ نِعۡمَةَ ٱللَّهِ عَلَيۡكُمۡ

៩-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នករំលឹកនូវនៀកម៉ាត់របស់អល់ឡោះដែលបានប្រទានឱ្យពួកអ្នកនៅពេលដែលក្រុម

១-ម៉ាវឡា : គឺជាខ្ញុំបម្រើដែលគេដោះលែងឱ្យមានសេរីភាព ហើយចៅហ្វាយអាចទទួលមរតកពីគេបាន ឬក៏ជាកូនចិញ្ចឹម ដូចជាសាលីមជាកូនចញ្ចឹមហ៊ូហ្សៃហ្វះ គេហៅថា សាលីមម៉ាវឡាហ៊ូហ្សៃហ្វះ។
២-ភរិយារបស់ណាពីត្រូវបានសាសនាចាត់ទុកជាមាតាអ្នកមានជំនឿ ដោយពួកគេមិនអាចរៀបអាពាហ៍ពិពាហ៍ជាមួយបានទេ បន្ទាប់ពីណាពីទទួលមរណៈភាពទៅ ។

إِذۡ جَآءَتۡكُمۡ جُنُودٞ فَأَرۡسَلۡنَا عَلَيۡهِمۡ رِيحٗا
وَجُنُودٗا لَّمۡ تَرَوۡهَاۚ وَكَانَ ٱللَّهُ بِمَا تَعۡمَلُونَ
بَصِيرًا ٩

ទាហាន(ទ័ពអះហ្សាប)បានមកដល់ពួកអ្នក ពេលនោះយើងបាន បញ្ជូនខ្យល់ព្យុះ និងក្រុមទាហាន(ម៉ាឡាអ៊ីកាត់)ទៅលើពួកទាំង នោះ(ទ័ពអះហ្សាប)ដែលពួកអ្នកមើលមិនឃើញពួកគេឡើយ ។ ហើយអល់ឡោះឃើញបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

إِذۡ جَآءُوكُم مِّن فَوۡقِكُمۡ وَمِنۡ أَسۡفَلَ مِنكُمۡ
وَإِذۡ زَاغَتِ ٱلۡأَبۡصَٰرُ وَبَلَغَتِ ٱلۡقُلُوبُ
ٱلۡحَنَاجِرَ وَتَظُنُّونَ بِٱللَّهِ ٱلظُّنُونَا۠ ١٠

១០-(ចូរចងចាំ)នៅពេលដែលពួកគេ(ទ័ពអះហ្សាប)បានមក ដល់ពួកអ្នកពីខាងលើពួកអ្នក(ជ្រលងដែលស្ថិតនៅទិសខាងកើត) និងពីខាងក្រោមពួកអ្នក(ជ្រលងដែលស្ថិតនៅទិសខាងលិច) និង នៅពេលដែលភ្នែកឡើងស(ដោយសារភ័យខ្លាច) ហើយចិត្តពោរ ពេញដោយក្ដីរន្ធត់ ។ ហើយពួកអ្នកគិតអាក្រក់ចំពោះអល់ឡោះ គ្រប់បែបគ្រប់យ៉ាង ។

هُنَالِكَ ٱبۡتُلِيَ ٱلۡمُؤۡمِنُونَ وَزُلۡزِلُواْ زِلۡزَالٗا
شَدِيدٗا ١١

១១-នៅទីនោះ បណ្ដាអ្នកដែលមានជំនឿត្រូវបានគេសាក ល្បង(អំពីជំនឿ) ហើយពួកគេត្រូវគេធ្វើឱ្យមានភាពចលាចល យ៉ាងខ្លាំង ។

وَإِذۡ يَقُولُ ٱلۡمُنَٰفِقُونَ وَٱلَّذِينَ فِي قُلُوبِهِم
مَّرَضٞ مَّا وَعَدَنَا ٱللَّهُ وَرَسُولُهُۥٓ إِلَّا غُرُورٗا ١٢

១២-ហើយ(ចូរចងចាំ)នៅពេលដែលពួកពុតត្បុតនិងពួកដែល នៅក្នុងចិត្តរបស់ពួកគេមានជម្ងឺ(សង្ស័យ)និយាយថា: អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់មិនបានសន្យាអ្វីចំពោះពួកយើងក្រៅពី ការបោកប្រាស់នោះឡើយ ។

وَإِذۡ قَالَت طَّآئِفَةٞ مِّنۡهُمۡ يَٰٓأَهۡلَ يَثۡرِبَ لَا مُقَامَ
لَكُمۡ فَٱرۡجِعُواْۚ وَيَسۡتَـٔۡذِنُ فَرِيقٞ مِّنۡهُمُ ٱلنَّبِيَّ
يَقُولُونَ إِنَّ بُيُوتَنَا عَوۡرَةٞ وَمَا هِيَ بِعَوۡرَةٍۖ إِن
يُرِيدُونَ إِلَّا فِرَارٗا ١٣

១៣-ហើយ(ចូរចងចាំ)នៅពេលដែលក្រុមមួយក្នុងចំណោម ពួកគេ(ពួកពុតត្បុត)បាននិយាយថា: ឱអ្នកស្រុកយ៉ាសរិប(ក្រុង ម៉ាឌីណះ)! គ្មានកន្លែងឈរជើងសម្រាប់ពួកអ្នក(តតាំងនឹងសត្រូវ) ឡើយ ។ ដូច្នេះ ចូរពួកអ្នកវិលត្រឡប់ទៅ(លំនៅដ្ឋាន)វិញចុះ ។ ហើយក្រុមមួយទៀតក្នុងចំណោមពួកគេមកសុំអនុញ្ញាតពីណាពី (មូហាំម៉ាត់)ដោយពួកគេនិយាយថា: ពិតប្រាកដណាស់លំនៅដ្ឋាន របស់ពួកយើងគ្មានសុវត្ថិភាពឡើយ តែវាមិនមែនគ្មានសុវត្ថិភាព នោះទេ ។ ពួកគេគ្មានបំណងអ្វីក្រៅពីការគេចវេះនោះឡើយ ។

وَلَوۡ دُخِلَتۡ عَلَيۡهِم مِّنۡ أَقۡطَارِهَا ثُمَّ سُئِلُواْ
ٱلۡفِتۡنَةَ لَأٓتَوۡهَا وَمَا تَلَبَّثُواْ بِهَآ إِلَّا يَسِيرٗا ١٤

១៤-ហើយប្រសិនបើមានគេ(កងទ័ពសត្រូវ)ចូលទៅវាយ ប្រហារពួកគេពីគ្រប់ទិសទីនៃទីក្រុងនោះ ក្រោយមកពួកគេត្រូវគេ (សត្រូវ)តម្រូវឱ្យចាកចេញពីសាសនាអ៊ីស្លាម ពួកគេច្បាស់ជាធ្វើ

វា ហើយពួកគេមិនរង់ចាំវាយូរឡើយ ។

១៥-ហើយជាការពិតណាស់ ពួកគេធ្លាប់សន្យាជាមួយអល់ឡោះពីមុនមកថាៈ ពួកគេនឹងមិនវិលត្រឡប់ក្រោយវិញឡើយ (ប្រសិនបើមានសង្គ្រាម) ។ ហើយការសន្យារបស់អល់ឡោះ គឺតម្រូវឱ្យមានការទទួលខុសត្រូវ ។

១៦-ចូរអ្នកពោលថាៈ ការគេចវេះគឺមិនអាចផ្តល់ប្រយោជន៍អ្វីដល់ពួកអ្នកឡើយ ទោះបីជាពួកអ្នករត់គេចពីការស្លាប់ ឬសង្គ្រាមក៏ដោយ ។ ហើយទោះបីជាដូច្នោះក៏ដោយ ក៏ពួកអ្នកមិនត្រូវគេផ្តល់ឱ្យមានសេចក្តីសុខឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ ។

១៧-ចូរអ្នកពោលថាៈ តើអ្នកណាម្នាក់អាចការពារពួកអ្នកពី (ទារុណកម្ម) អល់ឡោះ ប្រសិនបើទ្រង់ចង់ឱ្យពួកអ្នកជួបគ្រោះថ្នាក់ ឬចង់ឱ្យពួកអ្នកជួបសេចក្តីសុខនោះ ។ ហើយពួកគេគ្មានអ្នកគាំពារ និងអ្នកជួយក្រៅពីអល់ឡោះឡើយ ។

១៨-ជាការពិតណាស់ អល់ឡោះដឹងចំពោះពួកដែលរារាំងអ្នកដទៃពីការធ្វើសង្គ្រាមក្នុងចំណោមពួកអ្នក និងពួកដែលនិយាយទៅកាន់បងប្អូនរបស់ពួកគេថាៈ សូមចូលរួមជាមួយពួកយើងមក ។ ហើយពួកគេមិនទៅធ្វើសង្គ្រាមឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ ។

១៩-ដោយការកំណាញ់ចំពោះពួកអ្នក (ពីការបរិច្ចាគខ្លួនប្រាណ និងទ្រព្យសម្បត្តិ) ។ ហើយនៅពេលដែលការភ័យខ្លាច (គ្រោះអាសន្ន) បានមកដល់ អ្នក (មូហាំម៉ាត់) នឹងឃើញពួកគេសម្លឹងមករកអ្នក ដោយភ្នែករបស់ពួកគេវិលចុះឡើងដូចអ្នកដែលជិតស្លាប់ ។ ហើយនៅពេលដែលការភ័យខ្លាចបានរលាយបាត់ពួកគេបែរជាវាយប្រហារពួកអ្នកដោយពាក្យសំដីយ៉ាងមុតស្រួច (បញ្ឈឺ) ដោយមានចិត្តកំណាញ់ទៅលើប្រការល្អ ។ ពួកទាំងនោះគឺគ្មានជំនឿឡើយ ហើយអល់ឡោះបានរំលាយនូវទង្វើទាំងឡាយរបស់ពួកគេ ។ ហើយកិច្ចការទាំងនោះគឺងាយស្រួលបំផុតចំពោះអល់ឡោះ ។

وَلَقَدۡ كَانُواْ عَٰهَدُواْ ٱللَّهَ مِن قَبۡلُ لَا يُوَلُّونَ ٱلۡأَدۡبَٰرَۚ وَكَانَ عَهۡدُ ٱللَّهِ مَسۡـُٔولٗا ﴿١٥﴾

قُل لَّن يَنفَعَكُمُ ٱلۡفِرَارُ إِن فَرَرۡتُم مِّنَ ٱلۡمَوۡتِ أَوِ ٱلۡقَتۡلِ وَإِذٗا لَّا تُمَتَّعُونَ إِلَّا قَلِيلٗا ﴿١٦﴾

قُلۡ مَن ذَا ٱلَّذِي يَعۡصِمُكُم مِّنَ ٱللَّهِ إِنۡ أَرَادَ بِكُمۡ سُوٓءًا أَوۡ أَرَادَ بِكُمۡ رَحۡمَةٗۚ وَلَا يَجِدُونَ لَهُم مِّن دُونِ ٱللَّهِ وَلِيّٗا وَلَا نَصِيرٗا ﴿١٧﴾

۞ قَدۡ يَعۡلَمُ ٱللَّهُ ٱلۡمُعَوِّقِينَ مِنكُمۡ وَٱلۡقَآئِلِينَ لِإِخۡوَٰنِهِمۡ هَلُمَّ إِلَيۡنَاۖ وَلَا يَأۡتُونَ ٱلۡبَأۡسَ إِلَّا قَلِيلًا ﴿١٨﴾

أَشِحَّةً عَلَيۡكُمۡۖ فَإِذَا جَآءَ ٱلۡخَوۡفُ رَأَيۡتَهُمۡ يَنظُرُونَ إِلَيۡكَ تَدُورُ أَعۡيُنُهُمۡ كَٱلَّذِي يُغۡشَىٰ عَلَيۡهِ مِنَ ٱلۡمَوۡتِۖ فَإِذَا ذَهَبَ ٱلۡخَوۡفُ سَلَقُوكُم بِأَلۡسِنَةٍ حِدَادٍ أَشِحَّةً عَلَى ٱلۡخَيۡرِۚ أُوْلَٰٓئِكَ لَمۡ يُؤۡمِنُواْ فَأَحۡبَطَ ٱللَّهُ أَعۡمَٰلَهُمۡۚ وَكَانَ ذَٰلِكَ عَلَى ٱللَّهِ يَسِيرٗا ﴿١٩﴾

២០-ពួកគេ( ពួកពុតត្បុត) ស្មានថាៈ អះហ្សាប[1] មិនទាន់ដកថយនៅឡើយទេ ។ ហើយប្រសិនបើអះហ្សាបមកដល់( ម៉ាឌីណះ) ម្តងទៀត ពួកគេមានបំណងថា បើពួកគេបាននៅជាមួយអារ៉ាប់ជនបទ ពួកគេនឹងអាចស៊ើបសួរពីដំណឹងរបស់ពួកអ្នក ។ ហើយទោះបីជាពួកគេនៅជាមួយពួកអ្នក ក៏ពួកគេមិនចូលរួមធ្វើសង្គ្រាម( ជាមួយពួកអ្នក) ឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ ។

يَحۡسَبُونَ ٱلۡأَحۡزَابَ لَمۡ يَذۡهَبُواْۖ وَإِن يَأۡتِ
ٱلۡأَحۡزَابُ يَوَدُّواْ لَوۡ أَنَّهُم بَادُونَ فِي
ٱلۡأَعۡرَابِ يَسۡـَٔلُونَ عَنۡ أَنۢبَآئِكُمۡۖ وَلَوۡ
كَانُواْ فِيكُم مَّا قَٰتَلُوٓاْ إِلَّا قَلِيلٗا ٢٠

២១-ជាការពិតណាស់ ពួកអ្នកមានអ្នកនាំសាររបស់អល់ឡោះ( មូហាំម៉ាត់) ជាគំរូដ៏ល្អសម្រាប់អ្នកណាដែលសង្ឃឹមថានឹងបានជួបអល់ឡោះ និងថ្ងៃបរលោក ហើយនិងបានរំលឹកចំពោះអល់ឡោះយ៉ាងច្រើន ។

لَّقَدۡ كَانَ لَكُمۡ فِي رَسُولِ ٱللَّهِ أُسۡوَةٌ حَسَنَةٞ
لِّمَن كَانَ يَرۡجُواْ ٱللَّهَ وَٱلۡيَوۡمَ ٱلۡأٓخِرَ وَذَكَرَ ٱللَّهَ
كَثِيرٗا ٢١

២២-ហើយនៅពេលដែលបណ្តាអ្នកមានជំនឿបានឃើញអះហ្សាប( បរាជ័យ) ពួកគេនិយាយថាៈ នេះគឺជាអ្វីដែលអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់បានសន្យាចំពោះពួកយើង ។ ហើយអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់បានប្រាប់គឺជាការពិត ។ ហើយគ្មានអ្វីថែមដល់ពួកគេក្រៅពីការជឿជាក់និងការប្រគល់ខ្លួននោះឡើយ ។

وَلَمَّا رَءَا ٱلۡمُؤۡمِنُونَ ٱلۡأَحۡزَابَ قَالُواْ
هَٰذَا مَا وَعَدَنَا ٱللَّهُ وَرَسُولُهُۥ وَصَدَقَ
ٱللَّهُ وَرَسُولُهُۥۚ وَمَا زَادَهُمۡ إِلَّآ إِيمَٰنٗا
وَتَسۡلِيمٗا ٢٢

២៣-ក្នុងចំណោមបណ្តាអ្នកដែលមានជំនឿ មានបុរសជាច្រើនដែលបានអនុវត្តតាមអ្វីដែលពួកគេបានសន្យាជាមួយអល់ឡោះ ។ តែក្នុងចំណោមពួកគេក៏មានអ្នកខ្លះបានសម្រេចនូវគោលបំណងរបស់ពួកគេ( ស្លាប់ក្នុងសមរភូមិ) ។ ហើយក្នុងចំណោមពួកគេក៏មានអ្នកខ្លះទៀតនៅរង់ចាំ( ទទួលជ័យជំនះ ឬស្លាប់ក្នុងសមរភូមិ) ដែរ ។ ហើយពួកគេមិនបានផ្លាស់ប្តូរ( ការសន្យារបស់ពួកគេជាមួយអល់ឡោះ) ឡើយ ។

مِّنَ ٱلۡمُؤۡمِنِينَ رِجَالٞ صَدَقُواْ مَا عَٰهَدُواْ ٱللَّهَ
عَلَيۡهِۖ فَمِنۡهُم مَّن قَضَىٰ نَحۡبَهُۥ وَمِنۡهُم مَّن
يَنتَظِرُۖ وَمَا بَدَّلُواْ تَبۡدِيلٗا ٢٣

២៤-ដើម្បីអល់ឡោះនឹងតបស្នងចំពោះបណ្តាអ្នកដែលស្មោះត្រង់ដោយសារតែសច្ចភាពរបស់ពួកគេ ។ ហើយទ្រង់នឹងធ្វើទារុណកម្មចំពោះពួកពុតត្បុត ប្រសិនបើទ្រង់មានចេតនា ឬក៏អភ័យទោស

لِّيَجۡزِيَ ٱللَّهُ ٱلصَّٰدِقِينَ بِصِدۡقِهِمۡ وَيُعَذِّبَ
ٱلۡمُنَٰفِقِينَ إِن شَآءَ أَوۡ يَتُوبَ عَلَيۡهِمۡۚ إِنَّ

---

១-អះហ្សាប : គឺជាបណ្តាក្រុមដែលរួបរួមគ្នាដើម្បីធ្វើសង្គ្រាមប្រឆាំងនឹងមូហាំម៉ាត់នៅម៉ាឌីណះ ហើយក៏ជាឈ្មោះនៃសង្គ្រាមមួយដែរ ។

ٱللَّهَ كَانَ غَفُورٗا رَّحِيمٗا ٢٤

ឱ្យពួកគេ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

وَرَدَّ ٱللَّهُ ٱلَّذِينَ كَفَرُواْ بِغَيۡظِهِمۡ لَمۡ يَنَالُواْ
خَيۡرٗاۚ وَكَفَى ٱللَّهُ ٱلۡمُؤۡمِنِينَ ٱلۡقِتَالَۚ وَكَانَ
ٱللَّهُ قَوِيًّا عَزِيزٗا ٢٥

២៥-ហើយអល់ឡោះបានបណ្ដេញពួកដែលបានប្រឆាំងតាមកំហឹងរបស់ពួកគេ ដោយពួកគេមិនទទួលបានផលល្អ(ជ័យជំនះ)ឡើយ។ ហើយអល់ឡោះបានជ្រោមជ្រែងបណ្ដាអ្នកដែលមានជំនឿក្នុងការធ្វើសង្គ្រាម(អះហ្សាប)។ ហើយអល់ឡោះខ្លាំងពូកែមានអានុភាពបំផុត។

وَأَنزَلَ ٱلَّذِينَ ظَٰهَرُوهُم مِّنۡ أَهۡلِ ٱلۡكِتَٰبِ مِن
صَيَاصِيهِمۡ وَقَذَفَ فِي قُلُوبِهِمُ ٱلرُّعۡبَ فَرِيقٗا
تَقۡتُلُونَ وَتَأۡسِرُونَ فَرِيقٗا ٢٦

២៦-ហើយទ្រង់បានបញ្ចុះពួកដែលជួយពួកគេ(ពួកអះហ្សាប) អំពីអះលីគីតាប(យ៉ាហ៊ូទីអំបូរកូរ៉យហ្សោះ)ពីបន្ទាយរបស់ពួកគេ។ ហើយទ្រង់បានបញ្ចូលការភ័យខ្លាចទៅក្នុងចិត្តរបស់ពួកគេ។ មួយក្រុមត្រូវពួកអ្នកសម្លាប់ និងមួយក្រុមទៀតត្រូវពួកអ្នកចាប់ជាចំណាប់ខ្មាំង។

وَأَوۡرَثَكُمۡ أَرۡضَهُمۡ وَدِيَٰرَهُمۡ وَأَمۡوَٰلَهُمۡ وَأَرۡضٗا
لَّمۡ تَطَـُٔوهَاۚ وَكَانَ ٱللَّهُ عَلَىٰ كُلِّ شَيۡءٖ
قَدِيرٗا ٢٧

២៧-ហើយទ្រង់បានបន្សល់ទុកឱ្យពួកអ្នក(អ្នកមានជំនឿ)នូវដីធ្លីរបស់ពួកគេ និងផ្ទះសំបែងរបស់ពួកគេ(យ៉ាហ៊ូទី) ហើយនិងទ្រព្យសម្បត្តិរបស់ពួកគេ និងដីដែលពួកអ្នកមិនធ្លាប់ទៅដល់វា។ ហើយអល់ឡោះមានអានុភាពលើរាល់អ្វីៗទាំងអស់។

يَٰٓأَيُّهَا ٱلنَّبِيُّ قُل لِّأَزۡوَٰجِكَ إِن كُنتُنَّ تُرِدۡنَ
ٱلۡحَيَوٰةَ ٱلدُّنۡيَا وَزِينَتَهَا فَتَعَالَيۡنَ أُمَتِّعۡكُنَّ
وَأُسَرِّحۡكُنَّ سَرَاحٗا جَمِيلٗا ٢٨

២៨-ឱណាពី(មូហាំម៉ាត់)! ចូរអ្នកពោលទៅកាន់ភរិយាទាំងឡាយរបស់អ្នកថា: ប្រសិនបើពួកនាងត្រូវការតែការរស់នៅក្នុងលោកិយ និងភាពត្រចះត្រចង់របស់វា ចូរពួកនាងមក ខ្ញុំនឹងផ្ដល់ភាពសប្បាយរីករាយ(ទ្រព្យសម្បត្តិ)ដល់ពួកនាង ហើយខ្ញុំនឹងលែងលះពួកនាងតាមវិធីមួយដ៏ល្អ។

وَإِن كُنتُنَّ تُرِدۡنَ ٱللَّهَ وَرَسُولَهُۥ وَٱلدَّارَ
ٱلۡأٓخِرَةَ فَإِنَّ ٱللَّهَ أَعَدَّ لِلۡمُحۡسِنَٰتِ مِنكُنَّ
أَجۡرًا عَظِيمٗا ٢٩

២៩-តែប្រសិនបើពួកនាងត្រូវការ(ការយល់ព្រមពី)អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ហើយនិងថ្ងៃបរលោកនោះ អល់ឡោះពិតជាបានរៀបចំសម្រាប់បណ្ដាអ្នកដែលធ្វើល្អក្នុងចំណោមពួកនាងនូវផលបុណ្យដ៏ធំធេង។

يَٰنِسَآءَ ٱلنَّبِيِّ مَن يَأۡتِ مِنكُنَّ بِفَٰحِشَةٖ مُّبَيِّنَةٖ
يُضَٰعَفۡ لَهَا ٱلۡعَذَابُ ضِعۡفَيۡنِۚ وَكَانَ

៣០-ឱបណ្ដាភរិយារបស់ណាពី! អ្នកណាហើយក្នុងចំណោមពួកនាងប្រព្រឹត្តអំពើអសីលធម៌(ផិតក្បត់)ដែលច្បាស់លាស់ នាងនឹងត្រូវគេធ្វើទារុណកម្មទ្វេដង។ ហើយរឿងនោះគឺងាយស្រួលបំផុត

ذَٰلِكَ عَلَى ٱللَّهِ يَسِيرًا ﴿٣٠﴾

ចំពោះអល់ឡោះ ។

۞ وَمَن يَقْنُتْ مِنكُنَّ لِلَّهِ وَرَسُولِهِۦ وَتَعْمَلْ صَٰلِحًا نُّؤْتِهَآ أَجْرَهَا مَرَّتَيْنِ وَأَعْتَدْنَا لَهَا رِزْقًا كَرِيمًا ﴿٣١﴾

៣១-ហើយអ្នកណាក្នុងចំណោមពួកនាងប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ហើយនិងសាងអំពើល្អ យើងនឹងប្រទានឱ្យនាងនូវផលបុណ្យទ្វេដង ។ ហើយយើងបានរៀបចំសម្រាប់នាងនូវលាភសក្ការៈដ៏ឧត្តុង្គឧត្តម( ឋានសួគ៌ ) ។

يَٰنِسَآءَ ٱلنَّبِىِّ لَسْتُنَّ كَأَحَدٍ مِّنَ ٱلنِّسَآءِ ۚ إِنِ ٱتَّقَيْتُنَّ فَلَا تَخْضَعْنَ بِٱلْقَوْلِ فَيَطْمَعَ ٱلَّذِى فِى قَلْبِهِۦ مَرَضٌ وَقُلْنَ قَوْلًا مَّعْرُوفًا ﴿٣٢﴾

៣២-ឱបណ្តាភរិយារបស់ណាពី! ពួកនាងមិនដូចអ្នកណាម្នាក់ក្នុងចំណោមស្ត្រីដទៃឡើយ ។ ប្រសិនបើពួកនាងកោតខ្លាចអល់ឡោះ ពួកនាងកុំប្រើពាក្យសំដីទន់ភ្លន់ម៉្មិកម៉្មក់( ជាមួយបុរសដែលមិនមែនជាស្វាមី ) ឱ្យសោះ ជាហេតុធ្វើឱ្យបុរសដែលមានជម្ងឺ( ចំណង់តណ្ហា ) នៅក្នុងចិត្តរបស់គេមានអារម្មណ៍( ចំពោះពួកនាង ) ។ តែពួកនាងត្រូវនិយាយនូវពាក្យសំដីណាដែលល្អ ។

وَقَرْنَ فِى بُيُوتِكُنَّ وَلَا تَبَرَّجْنَ تَبَرُّجَ ٱلْجَٰهِلِيَّةِ ٱلْأُولَىٰ ۖ وَأَقِمْنَ ٱلصَّلَوٰةَ وَءَاتِينَ ٱلزَّكَوٰةَ وَأَطِعْنَ ٱللَّهَ وَرَسُولَهُۥٓ ۚ إِنَّمَا يُرِيدُ ٱللَّهُ لِيُذْهِبَ عَنكُمُ ٱلرِّجْسَ أَهْلَ ٱلْبَيْتِ وَيُطَهِّرَكُمْ تَطْهِيرًا ﴿٣٣﴾

៣៣-ហើយចូរពួកនាងរក្សាខ្លួននៅក្នុងផ្ទះរបស់ពួកនាង ហើយពួកនាងកុំបង្ហាញភាពឆើតឆាយ ដូចភាពឆើតឆាយនៃសម័យកាលល្ងង់ខ្លៅដំបូង( មុនសម័យអ៊ីស្លាម ) ឱ្យសោះ ។ ហើយចូរពួកនាងប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ និងប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ។ ពិតប្រាកដណាស់ អល់ឡោះចង់បំបាត់ភាពកខ្វក់( បាបកម្ម ) ចេញពីពួកអ្នកឱគ្រួសារណាពី! ហើយទ្រង់នឹងសំអាតពួកអ្នកឱ្យស្អាតស្អំ ។

وَٱذْكُرْنَ مَا يُتْلَىٰ فِى بُيُوتِكُنَّ مِنْ ءَايَٰتِ ٱللَّهِ وَٱلْحِكْمَةِ ۚ إِنَّ ٱللَّهَ كَانَ لَطِيفًا خَبِيرًا ﴿٣٤﴾

៣៤-ហើយចូរពួកនាងរំលឹកនូវអ្វីដែលគេសូត្រនៅក្នុងផ្ទះរបស់ពួកនាងអំពីអាយ៉ាត់ៗរបស់អល់ឡោះ និងការទូន្មានរបស់ណាពី ។ ពិតប្រាកដណាស់ អល់ឡោះមហាទន់ភ្លន់ មហាដឹងជ្រួតជ្រាប ។

إِنَّ ٱلْمُسْلِمِينَ وَٱلْمُسْلِمَٰتِ وَٱلْمُؤْمِنِينَ وَٱلْمُؤْمِنَٰتِ وَٱلْقَٰنِتِينَ وَٱلْقَٰنِتَٰتِ وَٱلصَّٰدِقِينَ وَٱلصَّٰدِقَٰتِ وَٱلصَّٰبِرِينَ وَٱلصَّٰبِرَٰتِ وَٱلْخَٰشِعِينَ وَٱلْخَٰشِعَٰتِ وَٱلْمُتَصَدِّقِينَ وَٱلْمُتَصَدِّقَٰتِ

៣៥-ពិតប្រាកដណាស់ បណ្តាមូស្លីមប្រុសស្រី និងបណ្តាអ្នកមានជំនឿប្រុសស្រី និងបណ្តាអ្នកគោរពប្រតិបត្តិប្រុសស្រី និងបណ្តាអ្នកសច្ចៈប្រុសស្រី និងបណ្តាអ្នកដែលអត់ធ្មត់ប្រុសស្រី និងបណ្តាអ្នកឱនលំទោនប្រុសស្រី និងបណ្តាអ្នកបរិច្ចាគទានប្រុសស្រី និងបណ្តាអ្នកបួសប្រុសស្រី និងបណ្តាអ្នកដែលរក្សាកេរ្តិ៍ខ្មាស់របស់ពួកគេទាំងប្រុសទាំងស្រី ហើយនិងបណ្តាអ្នកដែលរំលឹកចំពោះ

وَٱلصَّٰٓئِمِينَ وَٱلصَّٰٓئِمَٰتِ وَٱلۡحَٰفِظِينَ
فُرُوجَهُمۡ وَٱلۡحَٰفِظَٰتِ وَٱلذَّٰكِرِينَ ٱللَّهَ
كَثِيرٗا وَٱلذَّٰكِرَٰتِ أَعَدَّ ٱللَّهُ لَهُم مَّغۡفِرَةٗ
وَأَجۡرًا عَظِيمٗا ﴿٣٥﴾

អល់ឡោះយ៉ាងច្រើនទាំងប្រុសទាំងស្រី អល់ឡោះបានរៀបចំសម្រាប់ពួកគេនូវការអភ័យទោសនិងផលបុណ្យដ៏ធំធេង( ឋានសួគ៌ ) ។

وَمَا كَانَ لِمُؤۡمِنٖ وَلَا مُؤۡمِنَةٍ إِذَا قَضَى ٱللَّهُ
وَرَسُولُهُۥٓ أَمۡرًا أَن يَكُونَ لَهُمُ ٱلۡخِيَرَةُ مِنۡ
أَمۡرِهِمۡۗ وَمَن يَعۡصِ ٱللَّهَ وَرَسُولَهُۥ فَقَدۡ ضَلَّ
ضَلَٰلٗا مُّبِينٗا ﴿٣٦﴾

៣៦-ហើយមិនសក្តិសមឡើយចំពោះអ្នកមានជំនឿប្រុសស្រី នៅពេលដែលអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់បានកំណត់នូវកិច្ចការណាមួយនោះ ពួកគេមានជម្រើសផ្សេងអំពីកិច្ចការរបស់ពួកគេទៅវិញ ។ ហើយអ្នកណាប្រឆាំងនឹងអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់គឺគេពិតជាវង្វេងនូវការវង្វេងមួយដ៏ច្បាស់លាស់ ។

وَإِذۡ تَقُولُ لِلَّذِيٓ أَنۡعَمَ ٱللَّهُ عَلَيۡهِ وَأَنۡعَمۡتَ
عَلَيۡهِ أَمۡسِكۡ عَلَيۡكَ زَوۡجَكَ وَٱتَّقِ ٱللَّهَ وَتُخۡفِي
فِي نَفۡسِكَ مَا ٱللَّهُ مُبۡدِيهِ وَتَخۡشَى ٱلنَّاسَ
وَٱللَّهُ أَحَقُّ أَن تَخۡشَىٰهُۖ فَلَمَّا قَضَىٰ زَيۡدٞ مِّنۡهَا
وَطَرٗا زَوَّجۡنَٰكَهَا لِكَيۡ لَا يَكُونَ عَلَى
ٱلۡمُؤۡمِنِينَ حَرَجٞ فِيٓ أَزۡوَٰجِ أَدۡعِيَآئِهِمۡ
إِذَا قَضَوۡاْ مِنۡهُنَّ وَطَرٗاۚ وَكَانَ أَمۡرُ ٱللَّهِ
مَفۡعُولٗا ﴿٣٧﴾

៣៧-ហើយនៅពេលដែលអ្នក( មូហាំម៉ាត់ ) បានពោលទៅកាន់អ្នកដែលអល់ឡោះបានប្រទាននៀកម៉ាត់ឱ្យគេ( ហ្សេតកូនហារីសះ ) ហើយអ្នកក៏បានផ្តល់នៀកម៉ាត់( សេរីភាព ) ឱ្យគេដែរនោះថាៈ ចូរអ្នក( ហ្សេត ) រក្សាភរិយារបស់អ្នកឱ្យបានល្អ( កុំលែងលះនាងឱ្យសោះ ) និងកោតខ្លាចអល់ឡោះ ។ ហើយអ្នកលាក់ទុកនៅក្នុងចិត្តរបស់អ្នកនូវអ្វីដែលអល់ឡោះនឹងលាតត្រដាងវា ដោយអ្នកខ្លាច( ខ្មាស់ ) មនុស្សលោក ។ ផ្ទុយទៅវិញ អល់ឡោះទេដែលសក្តិសមឱ្យអ្នកកោតខ្លាចទ្រង់ ។ ហើយនៅពេលដែលហ្សេតបានលែងលះប្រពន្ធរួច យើងក៏បានរៀបការនាងឱ្យអ្នក ដើម្បីកុំឱ្យមានការពិបាកដល់បណ្តាអ្នកមានជំនឿក្នុងរឿងរៀបការជាមួយប្រពន្ធរបស់កូនចិញ្ចឹម នៅពេលដែលពួកគេ( កូនចិញ្ចឹម ) បានលែងលះប្រពន្ធរបស់ពួកគេរួច ។ ហើយកិច្ចការរបស់អល់ឡោះត្រូវបានគេអនុវត្ត ។

مَّا كَانَ عَلَى ٱلنَّبِيِّ مِنۡ حَرَجٖ فِيمَا فَرَضَ ٱللَّهُ
لَهُۥۖ سُنَّةَ ٱللَّهِ فِي ٱلَّذِينَ خَلَوۡاْ مِن قَبۡلُۚ وَكَانَ
أَمۡرُ ٱللَّهِ قَدَرٗا مَّقۡدُورًا ﴿٣٨﴾

៣៨-គ្មានទោសពៃរ៍អ្វីចំពោះណាពី( មូហាំម៉ាត់ ) ក្នុងរឿងដែលអល់ឡោះបានអនុញ្ញាតឱ្យគាត់( រៀបការជាមួយប្រពន្ធរបស់កូនចិញ្ចឹម ) ឡើយ ។ នោះគឺជាច្បាប់របស់អល់ឡោះសម្រាប់អ្នកជំនាន់មុនដែលកន្លងផុតទៅ ។ ហើយកិច្ចការរបស់អល់ឡោះ គឺជាការកំណត់ដែលត្រូវបានកំណត់រួច ។

ٱلَّذِينَ يُبَلِّغُونَ رِسَٰلَٰتِ ٱللَّهِ وَيَخۡشَوۡنَهُۥ

៣៩-បណ្តាអ្នកដែលផ្សព្វផ្សាយសារទាំងឡាយរបស់អល់ឡោះ

وَلَا يَخْشَوْنَ أَحَدًا إِلَّا ٱللَّهَ ۗ وَكَفَىٰ بِٱللَّهِ
حَسِيبًا ٣٩

និងកោតខ្លាចចំពោះទ្រង់ ដោយពួកគេមិនកោតខ្លាចអ្នកណាម្នាក់ក្រៅពីអល់ឡោះឡើយ ។ គ្រប់គ្រាន់ហើយអល់ឡោះជាអ្នកជំនុំជំរះ ។

مَّا كَانَ مُحَمَّدٌ أَبَآ أَحَدٍ مِّن رِّجَالِكُمْ وَلَٰكِن
رَّسُولَ ٱللَّهِ وَخَاتَمَ ٱلنَّبِيِّـۧنَ ۗ وَكَانَ ٱللَّهُ بِكُلِّ
شَىْءٍ عَلِيمًا ٤٠

៤០-មូហាំម៉ាត់មិនមែនជាឪពុករបស់អ្នកណាម្នាក់ក្នុងចំណោមបុរសរបស់ពួកអ្នកឡើយ ក៏ប៉ុន្តែគាត់ជាអ្នកនាំសាររបស់អល់ឡោះ និងជាណាពីចុងក្រោយបង្អស់ ។ ហើយអល់ឡោះដឹងបំផុតនូវរាល់អ្វីៗទាំងអស់ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ ٱذْكُرُوا۟ ٱللَّهَ ذِكْرًا كَثِيرًا ٤١

៤១-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នករំលឹកចំពោះអល់ឡោះឱ្យបានច្រើន ។

وَسَبِّحُوهُ بُكْرَةً وَأَصِيلًا ٤٢

៤២-ហើយចូរលើកតម្កើងទ្រង់ទាំងពេលព្រឹក និងពេលល្ងាច ។

هُوَ ٱلَّذِى يُصَلِّى عَلَيْكُمْ وَمَلَٰٓئِكَتُهُۥ
لِيُخْرِجَكُم مِّنَ ٱلظُّلُمَٰتِ إِلَى ٱلنُّورِ ۚ
وَكَانَ بِٱلْمُؤْمِنِينَ رَحِيمًا ٤٣

៤៣-ទ្រង់ផ្តល់ពរជ័យឱ្យពួកអ្នក និងបណ្តាម៉ាឡាអ៊ីកាត់របស់ទ្រង់( ក៏សុំពរជ័យពីអល់ឡោះឱ្យពួកអ្នកដែរ) ដើម្បីទ្រង់បញ្ចេញពួកអ្នកពីភាពងងឹតទៅកាន់ភាពមានពន្លឺ ។ ហើយទ្រង់មហាអាណិតស្រឡាញ់ចំពោះបណ្តាអ្នកដែលមានជំនឿ ។

تَحِيَّتُهُمْ يَوْمَ يَلْقَوْنَهُۥ سَلَٰمٌ ۚ وَأَعَدَّ لَهُمْ أَجْرًا
كَرِيمًا ٤٤

៤៤-ការស្វាគមន៍របស់ពួកគេនៅថ្ងៃដែលពួកគេជួបទ្រង់ គឺសាឡាម( សន្តិភាព) ។ ហើយទ្រង់បានរៀបចំសម្រាប់ពួកគេនូវផលបុណ្យដ៏ឧត្តុង្គឧត្តម( ឋានសួគ៌) ។

يَٰٓأَيُّهَا ٱلنَّبِىُّ إِنَّآ أَرْسَلْنَٰكَ شَٰهِدًا وَمُبَشِّرًا
وَنَذِيرًا ٤٥

៤៥-ឱណាពី( មូហាំម៉ាត់) ! ពិតប្រាកដណាស់ យើងបានបញ្ជូនអ្នកជាអ្នកធ្វើជាសាក្សី និងជាអ្នកផ្តល់ដំណឹងរីករាយ ហើយនិងជាអ្នកដាស់តឿនព្រមាន ។

وَدَاعِيًا إِلَى ٱللَّهِ بِإِذْنِهِۦ وَسِرَاجًا مُّنِيرًا ٤٦

៤៦-ហើយក៏ជាអ្នកអំពាវនាវ( មនុស្សលោក) ទៅកាន់អល់ឡោះដោយការអនុញ្ញាតរបស់ទ្រង់និងជាពន្លឺដើម្បីបំភ្លឺ ។

وَبَشِّرِ ٱلْمُؤْمِنِينَ بِأَنَّ لَهُم مِّنَ ٱللَّهِ فَضْلًا
كَبِيرًا ٤٧

៤៧-ហើយចូរអ្នកផ្តល់ដំណឹងរីករាយដល់បណ្តាអ្នកមានជំនឿថា: ពិតប្រាកដណាស់ សម្រាប់ពួកគេគឺទទួលបានការប្រោសប្រទានដ៏ធំធេងពីអល់ឡោះ ។

وَلَا تُطِعِ ٱلْكَٰفِرِينَ وَٱلْمُنَٰفِقِينَ وَدَعْ أَذَىٰهُمْ

៤៨-ហើយចូរអ្នកកុំគោរពតាមពួកប្រឆាំង និងពួកពុតត្បុតឱ្យសោះ ហើយចូរអ្នកកុំចាប់អារម្មណ៍នឹងការធ្វើបាបរបស់ពួកគេ ។

وَتَوَكَّلْ عَلَى ٱللَّهِ ۚ وَكَفَىٰ بِٱللَّهِ وَكِيلًا ﴿٤٨﴾

ហើយចូរអ្នកប្រគល់ការទុកចិត្តលើអល់ឡោះ។ គ្រប់គ្រាន់ហើយ អល់ឡោះជាអ្នកគាំពារ។

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓا۟ إِذَا نَكَحْتُمُ ٱلْمُؤْمِنَـٰتِ
ثُمَّ طَلَّقْتُمُوهُنَّ مِن قَبْلِ أَن تَمَسُّوهُنَّ
فَمَا لَكُمْ عَلَيْهِنَّ مِنْ عِدَّةٍ تَعْتَدُّونَهَا ۖ
فَمَتِّعُوهُنَّ وَسَرِّحُوهُنَّ سَرَاحًا جَمِيلًا ﴿٤٩﴾

៤៩-ឱបណ្ដាអ្នកដែលមានជំនឿ! នៅពេលដែលពួកអ្នកបានរៀបអាពាហ៍ពិពាហ៍ជាមួយបណ្ដាស្ត្រីដែលមានជំនឿ ក្រោយមកពួកអ្នកបានលែងលះពួកនាងមុនពេលរួមដំណេកជាមួយពួកនាងនោះ ពួកអ្នកមិនចាំបាច់រាប់អ៊ីតដះ(ការជ្រះស្អាតពីឈាមរដូវចំនួនបីដង)របស់ពួកនាងឡើយ។ ដូច្នេះ ចូរពួកអ្នកផ្ដល់ភាពសប្បាយរីករាយ(ទ្រព្យសម្បត្តិ)ដល់ពួកនាង ហើយចូរពួកអ្នកលែងលះពួកនាងតាមវិធីមួយដ៏ល្អ។

يَـٰٓأَيُّهَا ٱلنَّبِىُّ إِنَّآ أَحْلَلْنَا لَكَ أَزْوَٰجَكَ ٱلَّـٰتِىٓ
ءَاتَيْتَ أُجُورَهُنَّ وَمَا مَلَكَتْ يَمِينُكَ مِمَّآ
أَفَآءَ ٱللَّهُ عَلَيْكَ وَبَنَاتِ عَمِّكَ وَبَنَاتِ
عَمَّـٰتِكَ وَبَنَاتِ خَالِكَ وَبَنَاتِ خَـٰلَـٰتِكَ ٱلَّـٰتِى
هَاجَرْنَ مَعَكَ وَٱمْرَأَةً مُّؤْمِنَةً إِن وَهَبَتْ
نَفْسَهَا لِلنَّبِىِّ إِنْ أَرَادَ ٱلنَّبِىُّ أَن يَسْتَنكِحَهَا
خَالِصَةً لَّكَ مِن دُونِ ٱلْمُؤْمِنِينَ ۗ قَدْ عَلِمْنَا
مَا فَرَضْنَا عَلَيْهِمْ فِىٓ أَزْوَٰجِهِمْ وَمَا مَلَكَتْ
أَيْمَـٰنُهُمْ لِكَيْلَا يَكُونَ عَلَيْكَ حَرَجٌ ۗ
وَكَانَ ٱللَّهُ غَفُورًا رَّحِيمًا ﴿٥٠﴾

៥០-ឱណាពី(មូហាំម៉ាត់)! ពិតប្រាកដណាស់ យើងបានអនុញ្ញាតឱ្យអ្នកនូវបណ្ដាភរិយារបស់អ្នកដែលអ្នកបានផ្ដល់ប្រាក់ខាន់ស្លាដល់ពួកនាង និងខ្ញុំបម្រើស្រីដាច់ថ្លៃរបស់អ្នកដែលអល់ឡោះបានប្រទានជាជ័យភណ្ឌដល់អ្នក។ ហើយ(យើងបានអនុញ្ញាតឱ្យអ្នករៀបការជាមួយ)កូនស្រីរបស់មាខាងឪពុករបស់អ្នក និងកូនស្រីរបស់មីងខាងឪពុករបស់អ្នក និងកូនស្រីរបស់មាខាងម្ដាយរបស់អ្នក ហើយនិងកូនស្រីរបស់មីងខាងម្ដាយរបស់អ្នកដែលពួកនាងបានភៀសខ្លួនជាមួយអ្នក។ ហើយ(យើងក៏បានអនុញ្ញាតឱ្យអ្នកដែរនូវ)ស្ត្រីមានជំនឿដទៃទៀតដែលនាងបានប្រគល់ខ្លួនរបស់នាងជូនណាពី(ដោយមិនទាមទារខាន់ស្លា) ប្រសិនបើណាពីមានបំណងរៀបអាពាហ៍ពិពាហ៍ជាមួយនាងគឺសម្រាប់តែអ្នកម្នាក់គត់ដោយមិនអនុញ្ញាតចំពោះអ្នកមានជំនឿទូទៅឡើយ។ ពិតណាស់ យើងបានដឹងពីអ្វីដែលយើងបានដាក់បញ្ញត្តិចំពោះពួកគេក្នុងរឿងភរិយារបស់ពួកគេ(អនុញ្ញាតត្រឹមបួននាក់)និងខ្ញុំបម្រើស្រីដាច់ថ្លៃរបស់ពួកគេ ដើម្បីកុំឱ្យមានការលំបាកដល់អ្នក។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

۞ تُرْجِى مَن تَشَآءُ مِنْهُنَّ وَتُـْٔوِىٓ إِلَيْكَ مَن
تَشَآءُ ۖ وَمَنِ ٱبْتَغَيْتَ مِمَّنْ عَزَلْتَ فَلَا جُنَاحَ
عَلَيْكَ ۚ ذَٰلِكَ أَدْنَىٰٓ أَن تَقَرَّ أَعْيُنُهُنَّ وَلَا

៥១-ហើយអ្នកអាចបោះបង់ការជ្រើសរើសអ្នកណាម្នាក់ក្នុងចំណោមពួកនាង ឬអ្នកអាចនៅជាមួយអ្នកណាម្នាក់តាមតែអ្នកប្រាថ្នា។ ហើយអ្នកណាម្នាក់ដែលអ្នកមានបំណងរួមរស់ជាមួយក្នុងចំណោមភរិយាដែលអ្នកបានបោះបង់នោះ គឺគ្មានទោសពៃរ៍អ្វី

تَحۡزَنَّ وَيَرۡضَيۡنَ بِمَآ ءَاتَيۡتَهُنَّ كُلُّهُنَّۚ
وَٱللَّهُ يَعۡلَمُ مَا فِي قُلُوبِكُمۡۚ وَكَانَ ٱللَّهُ عَلِيمًا
حَلِيمًا ﴿٥١﴾

ចំពោះអ្នកឡើយ ។ នោះគឺជារឿងដែលជិតបំផុតដែលធ្វើឱ្យពួកនាងសប្បាយរីករាយ និងមិនព្រួយបារម្ភ ហើយពួកនាងយល់ព្រមនូវអ្វីដែលអ្នកបានផ្តល់ឱ្យពួកនាងទាំងអស់គ្នា ។ ហើយអល់ឡោះដឹងនូវអ្វីដែលមាននៅក្នុងចិត្តរបស់ពួកអ្នក ។ ហើយអល់ឡោះមហាដឹង មហាអត់ធ្មត់ ។

لَّا يَحِلُّ لَكَ ٱلنِّسَآءُ مِنۢ بَعۡدُ وَلَآ أَن تَبَدَّلَ
بِهِنَّ مِنۡ أَزۡوَٰجٖ وَلَوۡ أَعۡجَبَكَ حُسۡنُهُنَّ إِلَّا مَا
مَلَكَتۡ يَمِينُكَۗ وَكَانَ ٱللَّهُ عَلَىٰ كُلِّ شَيۡءٖ
رَّقِيبٗا ﴿٥٢﴾

៥២-មិនអនុញ្ញាតិឱ្យអ្នក(មូហាំម៉ាត់)រៀបការជាមួយស្ត្រីដទៃបន្ទាប់ពីនោះឡើយ ហើយក៏មិនអាចផ្លាស់ប្តូរពួកនាងទៅយកភរិយាផ្សេងបានដែរ ទោះបីជាសម្រស់របស់ពួកគេទាក់ទាញអ្នកយ៉ាងណាក៏ដោយ លើកលែងតែខ្ញុំបម្រើស្រីដាច់ថ្លៃរបស់អ្នកប៉ុណ្ណោះ ។ ហើយអល់ឡោះគឺជាអ្នកថែរក្សាគ្រប់គ្រងលើអ្វីៗទាំងអស់ ។

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَدۡخُلُواْ بُيُوتَ
ٱلنَّبِيِّ إِلَّآ أَن يُؤۡذَنَ لَكُمۡ إِلَىٰ طَعَامٍ غَيۡرَ
نَٰظِرِينَ إِنَىٰهُ وَلَٰكِنۡ إِذَا دُعِيتُمۡ فَٱدۡخُلُواْ فَإِذَا
طَعِمۡتُمۡ فَٱنتَشِرُواْ وَلَا مُسۡتَـٔۡنِسِينَ لِحَدِيثٍۚ
إِنَّ ذَٰلِكُمۡ كَانَ يُؤۡذِي ٱلنَّبِيَّ فَيَسۡتَحۡيِۦ
مِنكُمۡۖ وَٱللَّهُ لَا يَسۡتَحۡيِۦ مِنَ ٱلۡحَقِّۚ وَإِذَا
سَأَلۡتُمُوهُنَّ مَتَٰعٗا فَسۡـَٔلُوهُنَّ مِن وَرَآءِ
حِجَابٖۚ ذَٰلِكُمۡ أَطۡهَرُ لِقُلُوبِكُمۡ وَقُلُوبِهِنَّۚ
وَمَا كَانَ لَكُمۡ أَن تُؤۡذُواْ رَسُولَ ٱللَّهِ
وَلَآ أَن تَنكِحُوٓاْ أَزۡوَٰجَهُۥ مِنۢ بَعۡدِهِۦٓ أَبَدًاۚ
إِنَّ ذَٰلِكُمۡ كَانَ عِندَ ٱللَّهِ عَظِيمًا ﴿٥٣﴾

៥៣-ឱបណ្តាអ្នកមានជំនឿ! ចូរពួកអ្នកកុំចូលផ្ទះរបស់ណាពី លើកលែងតែគេអនុញ្ញាតិឱ្យពួកអ្នកចូលរួមទទួលទានអាហារដោយពួកអ្នកមិនត្រូវទៅរង់ចាំមុនពេលចំអិនអាហារឡើយ ។ ក៏ប៉ុន្តែនៅពេលដែលគេបានអញ្ជើញពួកអ្នក ចូរពួកអ្នកចូលទៅចុះ ។ ហើយនៅពេលដែលពួកអ្នកទទួលទានរួច ចូរពួកអ្នកចាកចេញរៀងៗខ្លួន ហើយមិនត្រូវបន្តជជែកគ្នាឡើយ ។ ពិតប្រាកដណាស់ ប្រការទាំងនោះគឺវាប៉ះពាល់ដល់ណាពី ហើយគាត់មានការខ្មាស់អៀនពួកអ្នក(ក្នុងការប្រាប់ឱ្យពួកអ្នកចាកចេញ) ។ ហើយអល់ឡោះមិនខ្មាស់-អៀនចំពោះរឿងពិតឡើយ ។ ហើយនៅពេលពួកអ្នកសុំរបស់របរប្រើប្រាស់អ្វីមួយពីពួកនាង(ភរិយាណាពី) ចូរពួកអ្នកសុំពីពួកនាងពីខាងក្រៅរបាំង ។ ទាំងនោះគឺជាការស្អាតស្អំបំផុតចំពោះចិត្តពួកអ្នក និងចិត្តពួកនាង ។ ហើយវាមិនសក្តិសមឡើយចំពោះពួកអ្នកដែលពួកអ្នករំខានដល់អ្នកនាំសាររបស់អល់ឡោះ ។ ហើយពួកអ្នកមិនអាចរៀបការជាមួយនឹងបណ្តាភរិយារបស់គាត់បន្ទាប់ពីគាត់(មរណៈ)ជាដាច់ខាត ។ ពិតប្រាកដណាស់ ប្រការទាំងនោះគឺធំធេងបំផុតចំពោះអល់ឡោះ ។

إِن تُبۡدُواْ شَيۡـًٔا أَوۡ تُخۡفُوهُ فَإِنَّ ٱللَّهَ كَانَ

៥៤-ប្រសិនបើពួកអ្នកលាតត្រដាងអ្វីមួយ ឬលាក់បាំងវានោះ ពិតប្រាកដណាស់ អល់ឡោះមហាដឹងរាល់អ្វីៗទាំងអស់ ។

بِكُلِّ شَيۡءٍ عَلِيمٗا ﴿٥٤﴾

لَّا جُنَاحَ عَلَيۡهِنَّ فِيٓ ءَابَآئِهِنَّ وَلَآ أَبۡنَآئِهِنَّ وَلَآ
إِخۡوَٰنِهِنَّ وَلَآ أَبۡنَآءِ إِخۡوَٰنِهِنَّ وَلَآ أَبۡنَآءِ
أَخَوَٰتِهِنَّ وَلَا نِسَآئِهِنَّ وَلَا مَا مَلَكَتۡ
أَيۡمَٰنُهُنَّۗ وَٱتَّقِينَ ٱللَّهَۚ إِنَّ ٱللَّهَ كَانَ عَلَىٰ
كُلِّ شَيۡءٖ شَهِيدًا ﴿٥٥﴾

៥៥-គ្មានទោសពៃរ៍អ្វីឡើយចំពោះពួកនាង ពេលដែលពួកនាងនៅជាមួយឪពុករបស់ពួកនាង និងកូនប្រុសរបស់ពួកនាង និងបងប្អូនប្រុសរបស់ពួកនាង និងក្មួយប្រុសខាងបងប្អូនប្រុសរបស់ពួកនាង និងក្មួយប្រុសខាងបងប្អូនស្រីរបស់ពួកនាង និងស្ត្រីនានាដែលមានជំនឿរបស់ពួកនាង និងខ្ញុំបម្រើស្រីដាច់ថ្លៃរបស់ពួកនាង(ដោយគ្មានរបាំង)នោះ ។ ចូរពួកនាងកោតខ្លាចអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកធ្វើសាក្សីលើអ្វីៗទាំងអស់ ។

إِنَّ ٱللَّهَ وَمَلَٰٓئِكَتَهُۥ يُصَلُّونَ عَلَى ٱلنَّبِيِّۚ
يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ صَلُّواْ عَلَيۡهِ وَسَلِّمُواْ
تَسۡلِيمًا ﴿٥٦﴾

៥៦-ពិតប្រាកដណាស់ អល់ឡោះប្រទានពរជ័យដល់ណាពី ហើយបណ្ដាម៉ាឡាអ៊ីកាត់របស់ទ្រង់ក៏បួងសួងសុំពរជ័យដល់ណាពីដែរ ។ ឱបណ្ដាអ្នកមានជំនឿ! ចូរពួកអ្នកបួងសួងសុំពរជ័យ និងសុំឱ្យមានសុខសន្តិភាពដល់គាត់ ។

إِنَّ ٱلَّذِينَ يُؤۡذُونَ ٱللَّهَ وَرَسُولَهُۥ لَعَنَهُمُ
ٱللَّهُ فِي ٱلدُّنۡيَا وَٱلۡأٓخِرَةِ وَأَعَدَّ لَهُمۡ عَذَابٗا
مُّهِينٗا ﴿٥٧﴾

៥៧-ពិតប្រាកដណាស់ ពួកដែលបញ្ឈឺអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ អល់ឡោះបានដាក់បណ្ដាសាពួកគេទាំងនៅក្នុងលោកិយ និងថ្ងៃបរលោក ។ ហើយទ្រង់បានរៀបចំសម្រាប់ពួកគេនូវទារុណកម្មយ៉ាងអាម៉ាស់បំផុត ។

وَٱلَّذِينَ يُؤۡذُونَ ٱلۡمُؤۡمِنِينَ وَٱلۡمُؤۡمِنَٰتِ
بِغَيۡرِ مَا ٱكۡتَسَبُواْ فَقَدِ ٱحۡتَمَلُواْ بُهۡتَٰنٗا
وَإِثۡمٗا مُّبِينٗا ﴿٥٨﴾

៥៨-ហើយពួកដែលធ្វើបាបបណ្ដាអ្នកមានជំនឿទាំងប្រុសទាំងស្រីចំពោះអ្វីដែលពួកគេមិនបានប្រព្រឹត្ត ពួកគេពិតជាទទួលខុសត្រូវចំពោះការចោទប្រកាន់ និងទទួលបាបកម្មយ៉ាងច្បាស់លាស់ ។

يَٰٓأَيُّهَا ٱلنَّبِيُّ قُل لِّأَزۡوَٰجِكَ وَبَنَاتِكَ وَنِسَآءِ
ٱلۡمُؤۡمِنِينَ يُدۡنِينَ عَلَيۡهِنَّ مِن جَلَٰبِيبِهِنَّۚ
ذَٰلِكَ أَدۡنَىٰٓ أَن يُعۡرَفۡنَ فَلَا يُؤۡذَيۡنَۗ وَكَانَ
ٱللَّهُ غَفُورٗا رَّحِيمٗا ﴿٥٩﴾

៥៩-ឱណាពី! ចូរអ្នកប្រាប់ទៅកាន់បណ្ដាភរិយារបស់អ្នកនិងកូនស្រីទាំងឡាយរបស់អ្នក និងស្ត្រីរបស់បណ្ដាអ្នកមានជំនឿឱ្យបិទបាំងទៅលើរាងកាយរបស់ពួកនាងដោយស្បៃរបស់ពួកនាង(គឺត្រូវគ្របពីក្បាលរហូតដល់ក្រោមទ្រូងនៃរាងកាយ) ។ ធ្វើដូច្នោះងាយស្រួលបំផុតដែលពួកនាងនឹងត្រូវគេស្គាល់(ថាជាស្ត្រីមូស្លីមដែលមានសេរីភាព) ហើយពួកនាងក៏មិនអាចត្រូវគេមើលងាយដែរ ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

۞ لَّئِن لَّمۡ يَنتَهِ ٱلۡمُنَٰفِقُونَ وَٱلَّذِينَ فِي قُلُوبِهِم

៦០-ប្រសិនបើពួកពុតត្បុត និងពួកដែលមានជម្ងឺ(ការសង្ស័យ)

مَّرَضٌ وَٱلْمُرْجِفُونَ فِى ٱلْمَدِينَةِ لَنُغْرِيَنَّكَ بِهِمْ ثُمَّ لَا يُجَاوِرُونَكَ فِيهَآ إِلَّا قَلِيلًا ﴿٦٠﴾

នៅក្នុងចិត្តរបស់ពួកគេ និងពួកផ្សព្វផ្សាយដំណឹងភូតកុហកនៅម៉ាឌីណះមិនព្រមឈប់(នូវទង្វើអាក្រក់)ទេនោះ យើងនឹងឱ្យអ្នក(មូហាំម៉ាត់)គ្រប់គ្រងលើពួកគេ។ ក្រោយមកពួកគេមិនអាចរស់នៅក្បែរអ្នកនៅទីនោះ(ម៉ាឌីណះ)ឡើយ លើកលែងតែមួយរយៈពេលខ្លីប៉ុណ្ណោះ។

مَّلْعُونِينَ ۖ أَيْنَمَا ثُقِفُوٓا۟ أُخِذُوا۟ وَقُتِّلُوا۟ تَقْتِيلًا ﴿٦١﴾

៦១-ដោយពួកគេត្រូវបណ្តាសា(ពីអល់ឡោះ)។ នៅទីណាក៏ដោយដែលពួកគេត្រូវគេជួប ពួកគេនឹងត្រូវគេចាប់ និងត្រូវគេសម្លាប់ដ៏សាហាវ។

سُنَّةَ ٱللَّهِ فِى ٱلَّذِينَ خَلَوْا۟ مِن قَبْلُ ۖ وَلَن تَجِدَ لِسُنَّةِ ٱللَّهِ تَبْدِيلًا ﴿٦٢﴾

៦២-នោះគឺជាមាគ៌ា(ច្បាប់)របស់អល់ឡោះសម្រាប់អ្នកជំនាន់មុនដែលកន្លងផុតទៅ។ ហើយអ្នកនឹងមិនអាចជួបប្រទះនូវការផ្លាស់ប្តូរនៃមាគ៌ារបស់អល់ឡោះឡើយ។

يَسْـَٔلُكَ ٱلنَّاسُ عَنِ ٱلسَّاعَةِ ۖ قُلْ إِنَّمَا عِلْمُهَا عِندَ ٱللَّهِ ۚ وَمَا يُدْرِيكَ لَعَلَّ ٱلسَّاعَةَ تَكُونُ قَرِيبًا ﴿٦٣﴾

៦៣-មនុស្សលោកនឹងសួរអ្នកអំពីថ្ងៃបរលោក។ ចូរអ្នកប្រាប់ថាៈ ពិតប្រាកដណាស់ ការដឹងពីវាគឺនៅលើអល់ឡោះ។ តើអ្វីទៅដែលធ្វើឱ្យអ្នកដឹងថា កាលកំណត់នៃថ្ងៃបរលោកអាចនឹងកើតឡើងក្នុងពេលឆាប់ៗនោះ?

إِنَّ ٱللَّهَ لَعَنَ ٱلْكَـٰفِرِينَ وَأَعَدَّ لَهُمْ سَعِيرًا ﴿٦٤﴾

៦៤-ពិតប្រាកដណាស់ អល់ឡោះបានដាក់បណ្តាសាពួកប្រឆាំង ហើយទ្រង់បានរៀបចំសម្រាប់ពួកគេនូវនរកដែលឆេះសន្ធោសន្ធៅ។

خَـٰلِدِينَ فِيهَآ أَبَدًا ۖ لَّا يَجِدُونَ وَلِيًّا وَلَا نَصِيرًا ﴿٦٥﴾

៦៥-ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។ ពួកគេគ្មានអ្នកគាំពារនិងគ្មានអ្នកជួយឡើយ។

يَوْمَ تُقَلَّبُ وُجُوهُهُمْ فِى ٱلنَّارِ يَقُولُونَ يَـٰلَيْتَنَآ أَطَعْنَا ٱللَّهَ وَأَطَعْنَا ٱلرَّسُولَا۠ ﴿٦٦﴾

៦៦-នៅថ្ងៃដែលមុខរបស់ពួកគេត្រូវគេដាក់ផ្កាប់ទៅក្នុងភ្លើងនរក ពួកគេនឹងនិយាយថាៈ ឱខ្លួនពួកយើងអើយ! ពួកយើងគួរណាស់តែបានគោរពតាមអល់ឡោះ និងគោរពតាមអ្នកនាំសារ។

وَقَالُوا۟ رَبَّنَآ إِنَّآ أَطَعْنَا سَادَتَنَا وَكُبَرَآءَنَا فَأَضَلُّونَا ٱلسَّبِيلَا۠ ﴿٦٧﴾

៦៧-ហើយពួកគេបាននិយាយទៀតថាៈ ឱម្ចាស់របស់ពួកយើង! ពិតប្រាកដណាស់ពួកយើងបានគោរពតាមមេដឹកនាំ និងអ្នកមានឋានៈរបស់ពួកយើង ហើយពួកគេបានធ្វើឱ្យពួកយើងវង្វេងពីមាគ៌ាដែលត្រឹមត្រូវ។

៦៨-ឱម្ចាស់របស់ពួកយើង! សូមទ្រង់ធ្វើទារុណកម្មពួកគេ (មេដឹកនាំនិងពួកមានឋានៈ) ទ្វេដង និងដាក់បណ្តាសាពួកគេនូវបណ្តាសាដ៏ធំធេងផង ។

៦៩-ឱបណ្តាអ្នកមានជំនឿ! ចូរពួកអ្នកកុំធ្វើដូចពួកដែលបានធ្វើបាបមូសាឱ្យសោះ ។ហើយអល់ឡោះបានធ្វើឱ្យគាត់ស្អាតស្អំពីអ្វីដែលពួកគេបានចោទប្រកាន់ ។ ហើយគាត់មានឋានៈដ៏ឧត្តុង្គឧត្តមចំពោះអល់ឡោះ ។

៧០-ឱបណ្តាអ្នកមានជំនឿ! ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងត្រូវនិយាយពាក្យសំដីណាដែលល្អត្រឹមត្រូវ ។

៧១-ទ្រង់នឹងកែលំអពួកអ្នកនូវទង្វើទាំងឡាយរបស់ពួកអ្នក ហើយទ្រង់នឹងអភ័យទោសឱ្យពួកអ្នកនូវបាបកម្មនានារបស់ពួកអ្នក ។ ហើយអ្នកណាដែលគោរពតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ អ្នកនោះពិតជាទទួលបានជោគជ័យដ៏ធំធេង ។

៧២-ពិតប្រាកដណាស់ យើងបានបង្ហាញនូវការទទួលខុសត្រូវទៅឱ្យមេឃជាច្រើនជាន់ និងផែនដី ហើយនិងភ្នំ ។ តែពួកវាបានបដិសេធមិនព្រមទទួលយកវាឡើយ ។ ហើយពួកវាខ្លាចមិនអាចអនុវត្តតាមបាន ។ ហើយមនុស្សលោកក៏បានទទួលយកវា ។ ពិតប្រាកដណាស់ គេ(មនុស្សលោក)គឺជាអ្នកបំពានដ៏ល្ងង់ខ្លៅបំផុត ។

៧៣-ដើម្បីអល់ឡោះនឹងធ្វើទារុណកម្មពួកពុតត្បុតទាំងប្រុសទាំងស្រី និងពួកមូស្ហរីគីនទាំងប្រុសទាំងស្រី ។ហើយអល់ឡោះនឹងទទួលយកនូវការសារភាពកំហុសពីបណ្តាអ្នកដែលមានជំនឿទាំងប្រុសទាំងស្រី ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

## ជំពូកសាហ្ពាក

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

رَبَّنَآ ءَاتِهِمۡ ضِعۡفَيۡنِ مِنَ ٱلۡعَذَابِ وَٱلۡعَنۡهُمۡ لَعۡنٗا كَبِيرٗا ﴿٦٨﴾

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَكُونُواْ كَٱلَّذِينَ ءَاذَوۡاْ مُوسَىٰ فَبَرَّأَهُ ٱللَّهُ مِمَّا قَالُواْۚ وَكَانَ عِندَ ٱللَّهِ وَجِيهٗا ﴿٦٩﴾

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ وَقُولُواْ قَوۡلٗا سَدِيدٗا ﴿٧٠﴾

يُصۡلِحۡ لَكُمۡ أَعۡمَٰلَكُمۡ وَيَغۡفِرۡ لَكُمۡ ذُنُوبَكُمۡۗ وَمَن يُطِعِ ٱللَّهَ وَرَسُولَهُۥ فَقَدۡ فَازَ فَوۡزًا عَظِيمًا ﴿٧١﴾

إِنَّا عَرَضۡنَا ٱلۡأَمَانَةَ عَلَى ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَٱلۡجِبَالِ فَأَبَيۡنَ أَن يَحۡمِلۡنَهَا وَأَشۡفَقۡنَ مِنۡهَا وَحَمَلَهَا ٱلۡإِنسَٰنُۖ إِنَّهُۥ كَانَ ظَلُومٗا جَهُولٗا ﴿٧٢﴾

لِّيُعَذِّبَ ٱللَّهُ ٱلۡمُنَٰفِقِينَ وَٱلۡمُنَٰفِقَٰتِ وَٱلۡمُشۡرِكِينَ وَٱلۡمُشۡرِكَٰتِ وَيَتُوبَ ٱللَّهُ عَلَى ٱلۡمُؤۡمِنِينَ وَٱلۡمُؤۡمِنَٰتِۗ وَكَانَ ٱللَّهُ غَفُورٗا رَّحِيمَۢا ﴿٧٣﴾

## سورة سبإ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ٱلۡحَمۡدُ لِلَّهِ ٱلَّذِي لَهُۥ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي
ٱلۡأَرۡضِ وَلَهُ ٱلۡحَمۡدُ فِي ٱلۡأٓخِرَةِۚ وَهُوَ ٱلۡحَكِيمُ
ٱلۡخَبِيرُ ﴿١﴾

១-រាល់ការសរសើរ គឺចំពោះអល់ឡោះដែលអ្វីៗនៅលើមេឃជាច្រើនជាន់ និងអ្វីៗនៅលើផែនដីជាកម្មសិទ្ធិរបស់ទ្រង់។ ហើយរាល់ការសរសើរនៅថ្ងៃបរលោកក៏ជាកម្មសិទ្ធិរបស់ទ្រង់ដែរ។ ហើយទ្រង់មហាគតិបណ្ឌិត មហាដឹងជ្រួតជ្រាប។

يَعۡلَمُ مَا يَلِجُ فِي ٱلۡأَرۡضِ وَمَا يَخۡرُجُ مِنۡهَا وَمَا
يَنزِلُ مِنَ ٱلسَّمَآءِ وَمَا يَعۡرُجُ فِيهَاۚ وَهُوَ
ٱلرَّحِيمُ ٱلۡغَفُورُ ﴿٢﴾

២-ទ្រង់ដឹងនូវអ្វីដែលជ្រាបចូលទៅក្នុងដី និងអ្វីដែលផុសចេញពីវា ហើយនិងអ្វីដែលចុះពីលើមេឃ និងអ្វីដែលឡើងទៅលើវា។ ហើយទ្រង់មហាអាណិតស្រឡាញ់ មហាអភ័យទោស ។

وَقَالَ ٱلَّذِينَ كَفَرُواْ لَا تَأۡتِينَا ٱلسَّاعَةُۖ قُلۡ بَلَىٰ
وَرَبِّي لَتَأۡتِيَنَّكُمۡ عَٰلِمِ ٱلۡغَيۡبِۖ لَا يَعۡزُبُ
عَنۡهُ مِثۡقَالُ ذَرَّةٖ فِي ٱلسَّمَٰوَٰتِ وَلَا فِي
ٱلۡأَرۡضِ وَلَآ أَصۡغَرُ مِن ذَٰلِكَ وَلَآ أَكۡبَرُ
إِلَّا فِي كِتَٰبٖ مُّبِينٖ ﴿٣﴾

៣-ហើយពួកដែលប្រឆាំងបាននិយាយថាៈ ថ្ងៃបរលោកមិនអាចកើតឡើងចំពោះពួកយើងឡើយ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ មិនដូច្នោះទេ! ខ្ញុំសូមស្បថនឹងម្ចាស់របស់ខ្ញុំដែលជាអ្នកដឹងពីអាថ៌កំបាំងថា វាពិតជានឹងកើតឡើងចំពោះពួកអ្នកជាមិនខាន។ វាគ្មានកំបាំងពីទ្រង់ឡើយ សូម្បីតែវត្ថុដែលមានទម្ងន់តូចនៅលើមេឃជាច្រើនជាន់ និងនៅលើផែនដីក៏ដោយ ហើយក៏គ្មានវត្ថុដែលតូចឬធំជាងនោះក្រៅពីមាន(ការកត់ត្រា)នៅក្នុងគម្ពីរ(ឡាវហុលម៉ះហ្វូស)យ៉ាងច្បាស់លាស់ដែរ។

لِّيَجۡزِيَ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِۚ
أُوْلَٰٓئِكَ لَهُم مَّغۡفِرَةٞ وَرِزۡقٞ كَرِيمٞ ﴿٤﴾

៤-ដើម្បីទ្រង់នឹងតបស្នងចំពោះបណ្ដាអ្នកមានជំនឿ និងបានសាងអំពើល្អ។ អ្នកទាំងនោះនឹងទទួលបានការអភ័យទោស និងលាភសក្ការៈដ៏ឧត្ដុង្គឧត្ដម(ឋានសួគ៌)។

وَٱلَّذِينَ سَعَوۡ فِيٓ ءَايَٰتِنَا مُعَٰجِزِينَ أُوْلَٰٓئِكَ لَهُمۡ
عَذَابٞ مِّن رِّجۡزٍ أَلِيمٞ ﴿٥﴾

៥-ហើយពួកដែលបានព្យាយាមប្រឆាំងនឹងភស្ដុតាងរបស់យើងដោយពួកគេប្រជែងចង់ឈ្នះនោះ ពួកទាំងនោះនឹងទទួលទារុណកម្មដ៏សែនឈឺចាប់។

وَيَرَى ٱلَّذِينَ أُوتُواْ ٱلۡعِلۡمَ ٱلَّذِيٓ أُنزِلَ إِلَيۡكَ
مِن رَّبِّكَ هُوَ ٱلۡحَقَّ وَيَهۡدِيٓ إِلَىٰ صِرَٰطِ
ٱلۡعَزِيزِ ٱلۡحَمِيدِ ﴿٦﴾

៦-ហើយបណ្ដាអ្នកដែលគេបានផ្ដល់ឱ្យនូវចំណេះដឹងយល់ឃើញថាៈ អ្វីដែលគេបានបញ្ចុះឱ្យអ្នក(មូហាំម៉ាត់)ពីម្ចាស់របស់អ្នក វាជាការពិត។ ហើយវាចង្អុលបង្ហាញទៅរកមាគ៌ារបស់ម្ចាស់ដែលមហាខ្លាំងពូកែ ជាទីកោតសរសើរ។

وَقَالَ ٱلَّذِينَ كَفَرُواْ هَلۡ نَدُلُّكُمۡ عَلَىٰ رَجُلٖ

៧-ហើយពួកដែលប្រឆាំងបាននិយាយ(ទៅកាន់គ្នាគេ)ថាៈ តើចង់ឱ្យយើងបង្ហាញពួកអ្នកដែរឬទេអំពីបុរសម្នាក់(មូហាំម៉ាត់)ដែល

يُنَبِّئُكُمْ إِذَا مُزِّقْتُمْ كُلَّ مُمَزَّقٍ إِنَّكُمْ لَفِى خَلْقٍ جَدِيدٍ ٧

គេប្រាប់ពួកអ្នកថា នៅពេលដែលពួកអ្នកត្រូវគេរំលាយខ្ទេចខ្ទីទៅជាដី ពួកអ្នកពិតជានឹងត្រូវគេបង្កើតសាជាថ្មីឡើងវិញនោះ?

أَفْتَرَىٰ عَلَى ٱللَّهِ كَذِبًا أَم بِهِۦ جِنَّةٌۢ ۗ بَلِ ٱلَّذِينَ لَا يُؤْمِنُونَ بِٱلْـَٔاخِرَةِ فِى ٱلْعَذَابِ وَٱلضَّلَـٰلِ ٱلْبَعِيدِ ٨

៨-តើគេនោះ(មូហាំម៉ាត់) បានប្រឌិតនូវពាក្យភូតកុហកទៅលើអល់ឡោះឬក៏គេវិកលចរិត? ផ្ទុយទៅវិញ ពួកដែលគ្មានជំនឿនឹងថ្ងៃបរលោកនោះ គឺស្ថិតនៅក្នុងទារុណកម្មនិងភាពវង្វេងដ៏សែនឆ្ងាយ ។

أَفَلَمْ يَرَوْا۟ إِلَىٰ مَا بَيْنَ أَيْدِيهِمْ وَمَا خَلْفَهُم مِّنَ ٱلسَّمَآءِ وَٱلْأَرْضِ ۚ إِن نَّشَأْ نَخْسِفْ بِهِمُ ٱلْأَرْضَ أَوْ نُسْقِطْ عَلَيْهِمْ كِسَفًا مِّنَ ٱلسَّمَآءِ ۚ إِنَّ فِى ذَٰلِكَ لَـَٔايَةً لِّكُلِّ عَبْدٍ مُّنِيبٍ ٩

៩-តើពួកគេ(ពួកគ្មានជំនឿ) មិនបានមើលទៅចំពោះអ្វីដែលនៅខាងមុខពួកគេនិងអ្វីដែលនៅខាងក្រោយពួកគេអំពីមេឃនិងដីទេឬ? ប្រសិនបើយើងមានចេតនា យើងនឹងពន្លិចពួកគេចូលទៅក្នុងដី (ដូចការូន) ឬយើងនឹងទម្លាក់ទារុណកម្មជាដុំៗពីលើមេឃទៅលើពួកគេ(ដូចក្រុមស្ហូអែប) ជាមិនខាន ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងមួយសម្រាប់រាល់ខ្ញុំរបស់អល់ឡោះដែលសារភាពទោសកំហុស ។

۞ وَلَقَدْ ءَاتَيْنَا دَاوُۥدَ مِنَّا فَضْلًا ۖ يَـٰجِبَالُ أَوِّبِى مَعَهُۥ وَٱلطَّيْرَ ۖ وَأَلَنَّا لَهُ ٱلْحَدِيدَ ١٠

១០-ហើយជាការពិតណាស់យើងបានផ្តល់ឱ្យដាវូដនូវការប្រោសប្រទានមួយពីយើង ។ (ហើយយើងមានបន្ទូលថា) ឱភ្នំ និងបក្សីទាំងឡាយ! ចូរពួកឯងទាំងអស់គ្នាសរសើរលើកតម្កើងយើងជាមួយគេ(ដាវូដ) ចុះ ។ ហើយយើងបានធ្វើឱ្យដែកទន់សម្រាប់គេ ។

أَنِ ٱعْمَلْ سَـٰبِغَـٰتٍ وَقَدِّرْ فِى ٱلسَّرْدِ ۖ وَٱعْمَلُوا۟ صَـٰلِحًا ۖ إِنِّى بِمَا تَعْمَلُونَ بَصِيرٌ ١١

១១-ចូរអ្នកធ្វើអាវដែកការពារ និងត្រូវកំណត់ទំហំ(តាមអ្នកប្រាថ្នា) ចុះ ។ ហើយចូរពួកអ្នកសាងអំពើល្អ ។ ពិតប្រាកដណាស់យើងឃើញបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

وَلِسُلَيْمَـٰنَ ٱلرِّيحَ غُدُوُّهَا شَهْرٌ وَرَوَاحُهَا شَهْرٌ ۖ وَأَسَلْنَا لَهُۥ عَيْنَ ٱلْقِطْرِ ۖ وَمِنَ ٱلْجِنِّ مَن يَعْمَلُ بَيْنَ يَدَيْهِ بِإِذْنِ رَبِّهِۦ ۖ وَمَن يَزِغْ مِنْهُمْ عَنْ أَمْرِنَا نُذِقْهُ مِنْ عَذَابِ ٱلسَّعِيرِ ١٢

១២-ហើយ(យើងបានធ្វើឱ្យ) ខ្យល់ស្តាប់បង្គាប់ចំពោះស៊ូឡៃម៉ាន គឺការចេញដំណើររបស់វា(ជាមួយគេ) មួយព្រឹកស្មើនឹងរយៈពេលធ្វើដំណើរធម្មតាមួយខែ ហើយការចេញដំណើររបស់វាមួយល្ងាចស្មើនឹងរយៈពេលធ្វើដំណើរធម្មតាមួយខែ ។ ហើយយើងបានធ្វើឱ្យលោហធាតុរលាយសម្រាប់គេ ។ ហើយក្នុងចំណោមពួកជិនមានអ្នកខ្លះធ្វើការចំពោះមុខគេ(ស៊ូឡៃម៉ាន) តាមបញ្ជានៃម្ចាស់របស់គេ ។ ហើយនរណាម្នាក់ក្នុងចំណោមពួកគេបែរចេញពីបទបញ្ជារបស់យើង យើងនឹងឱ្យគេភ្លក្សទារុណកម្មនៃនរកដែលឆេះ

សន្ទោសន្ទៅ ។

១៣-ពួកគេ( ជិន ) ធ្វើការឱ្យស៊ូឡៃម៉ានតាមអ្វីដែលគេចង់ ដូចជាវិមានដ៏ខ្ពស់ៗ រូបចម្លាក់ និងចានដ៏ធំដូចស្រះទឹក ហើយនិងឆ្នាំងដែលជាប់នៅនឹងកន្លែង ។ ( អល់ឡោះបានមានបន្ទូលថា) ឱពូជពង្សដាវូដ! ចូរពួកអ្នកអនុវត្តតាមដោយដឹងគុណ( ចំពោះអល់ឡោះ ) ចុះ ។ ហើយអ្នកដែលដឹងគុណក្នុងចំណោមខ្ញុំរបស់យើងគឺតិចតួចបំផុត ។

يَعۡمَلُونَ لَهُۥ مَا يَشَآءُ مِن مَّحَٰرِيبَ وَتَمَٰثِيلَ
وَجِفَانٖ كَٱلۡجَوَابِ وَقُدُورٖ رَّاسِيَٰتٍۚ ٱعۡمَلُوٓاْ
ءَالَ دَاوُۥدَ شُكۡرٗاۚ وَقَلِيلٞ مِّنۡ عِبَادِيَ
ٱلشَّكُورُ ﴿١٣﴾

១៤-ហើយនៅពេលដែលយើងបានកំណត់សេចក្តីស្លាប់ទៅលើគេ( ស៊ូឡៃម៉ាន ) គ្មានសញ្ញាបញ្ជាក់ដល់ពួកគេ( ជិន ) ពីមរណភាពរបស់គេឡើយ ទាល់តែដង្កូវដីស៊ីឈើច្រត់របស់គេ ។ ហើយនៅពេលដែលសាកសពរបស់គេបានដួលចុះ ពួកជិនក៏បានជ្រាបថា: ប្រសិនបើពួកគេបានដឹងនូវអាថិកំបាំងនោះ ពួកគេក៏មិនស្ថិតក្នុងទារុណកម្មដ៏អាម៉ាស់នោះដែរ ។

فَلَمَّا قَضَيۡنَا عَلَيۡهِ ٱلۡمَوۡتَ مَا دَلَّهُمۡ عَلَىٰ
مَوۡتِهِۦٓ إِلَّا دَآبَّةُ ٱلۡأَرۡضِ تَأۡكُلُ مِنسَأَتَهُۥۖ
فَلَمَّا خَرَّ تَبَيَّنَتِ ٱلۡجِنُّ أَن لَّوۡ كَانُواْ يَعۡلَمُونَ
ٱلۡغَيۡبَ مَا لَبِثُواْ فِي ٱلۡعَذَابِ ٱلۡمُهِينِ ﴿١٤﴾

១៥-ជាការពិតណាស់ សម្រាប់កុលសម្ព័នសាហ្ពាកដែលនៅក្នុងភូមិស្រុករបស់ពួកគេមានភស្តុតាង( បង្ហាញពីភាពខ្លាំងពូកែរបស់អល់ឡោះ) គឺចំការពីរដែលនៅខាងស្តាំនិងខាងឆ្វេង( នៃភូមិស្រុករបស់ពួកគេ) ។ ចូរពួកអ្នកបរិភោគចុះនូវលាភសក្ការៈពីម្ចាស់របស់ពួកអ្នក និងត្រូវដឹងគុណចំពោះទ្រង់ ។ នេះជាទឹកដីដែលល្អ ហើយទ្រង់ជាម្ចាស់ មហាអភ័យទោស ។

لَقَدۡ كَانَ لِسَبَإٖ فِي مَسۡكَنِهِمۡ ءَايَةٞۖ جَنَّتَانِ
عَن يَمِينٖ وَشِمَالٖۖ كُلُواْ مِن رِّزۡقِ رَبِّكُمۡ
وَٱشۡكُرُواْ لَهُۥۚ بَلۡدَةٞ طَيِّبَةٞ وَرَبٌّ غَفُورٞ ﴿١٥﴾

១៦-តែពួកគេបែរជាប្រឆាំង( នឹងបទបញ្ជា) ។ ដូច្នេះ យើងក៏បញ្ជូនទឹកជំនន់ដែលហូរខ្លាំងទៅកាន់ពួកគេ( ធ្វើឱ្យបាក់ទំនប់ និងខូចចំការ) ។ ហើយយើងបានផ្លាស់ប្តូរចំការទាំងពីររបស់ពួកគេទៅជាចំការដែលមានផ្លែរសជាតិល្វីង និងរុក្ខជាតិគ្មានផ្លែ និងមានតែដើមពុទ្រាតិចតួចតែប៉ុណ្ណោះ ។

فَأَعۡرَضُواْ فَأَرۡسَلۡنَا عَلَيۡهِمۡ سَيۡلَ ٱلۡعَرِمِ
وَبَدَّلۡنَٰهُم بِجَنَّتَيۡهِمۡ جَنَّتَيۡنِ ذَوَاتَيۡ أُكُلٍ
خَمۡطٖ وَأَثۡلٖ وَشَيۡءٖ مِّن سِدۡرٖ قَلِيلٖ ﴿١٦﴾

១៧-ដូច្នោះ យើងបានតបស្នងដល់ពួកគេទៅតាមអ្វីដែលពួកគេបានប្រឆាំង ។ ហើយយើងមិនតបស្នង( បែបនេះ) ឡើយ លើកលែងតែពួកដែលប្រឆាំងប៉ុណ្ណោះ ។

ذَٰلِكَ جَزَيۡنَٰهُم بِمَا كَفَرُواْۖ وَهَلۡ نُجَٰزِيٓ إِلَّا
ٱلۡكَفُورَ ﴿١٧﴾

១៨-ហើយយើងបានបង្កើតរវាងពួកគេនូវទីក្រុងនានានិងបណ្តាទីក្រុងដែលយើងបានធ្វើឱ្យរីកចម្រើននៅក្នុងនោះឱ្យនៅជិតគ្នា ។

وَجَعَلۡنَا بَيۡنَهُمۡ وَبَيۡنَ ٱلۡقُرَى ٱلَّتِي بَٰرَكۡنَا

فِيهَا قُرًى ظَٰهِرَةً وَقَدَّرْنَا فِيهَا ٱلسَّيْرَ ۖ سِيرُوا۟ فِيهَا لَيَالِىَ وَأَيَّامًا ءَامِنِينَ ﴿١٨﴾

ហើយយើងបានកំណត់ការធ្វើដំណើរនៅលើវា(ដោយងាយស្រួល)។ ចូរពួកអ្នកធ្វើដំណើរនៅលើវាទាំងពេលយប់ និងពេលថ្ងៃដោយសុវត្ថិភាពចុះ។

فَقَالُوا۟ رَبَّنَا بَٰعِدْ بَيْنَ أَسْفَارِنَا وَظَلَمُوٓا۟ أَنفُسَهُمْ فَجَعَلْنَٰهُمْ أَحَادِيثَ وَمَزَّقْنَٰهُمْ كُلَّ مُمَزَّقٍ ۚ إِنَّ فِى ذَٰلِكَ لَءَايَٰتٍ لِّكُلِّ صَبَّارٍ شَكُورٍ ﴿١٩﴾

១៩-(ដោយអំនួតនិងធុញទ្រាន់ពីសន្តិភាព)ពួកគេក៏បាននិយាយថា: ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាធ្វើឱ្យឆ្ងាយចុះរវាងការធ្វើដំណើររបស់ពួកយើង(ពីតំបន់មួយទៅតំបន់មួយ)។ ហើយពួកគេក៏បានបំពានលើខ្លួនឯង។ បន្ទាប់មកយើងបានធ្វើឱ្យរឿងពួកគេក្លាយជារឿងនិទាន(សម្រាប់និយាយតៗគ្នា) ហើយយើងបានកំចាត់ពួកគេឱ្យខ្ចាត់ខ្ចាយ។ ពិតប្រាកដណាស់នៅក្នុងរឿងនោះគឺជាភស្តុតាងៗសម្រាប់រាល់អ្នកដែលអត់ធ្មត់និងដឹងគុណ។

وَلَقَدْ صَدَّقَ عَلَيْهِمْ إِبْلِيسُ ظَنَّهُۥ فَٱتَّبَعُوهُ إِلَّا فَرِيقًا مِّنَ ٱلْمُؤْمِنِينَ ﴿٢٠﴾

២០-ហើយជាការពិតណាស់ អ៊ីព្លីសបានបញ្ជាក់ពីភាពពិតនូវការស្មានរបស់វាដាក់ពួកគេទាំងនោះ ពេលនោះពួកគេក៏តាមវា លើកលែងតែមួយក្រុមនៃបណ្ដាអ្នកដែលមានជំនឿប៉ុណ្ណោះ។

وَمَا كَانَ لَهُۥ عَلَيْهِم مِّن سُلْطَٰنٍ إِلَّا لِنَعْلَمَ مَن يُؤْمِنُ بِٱلْءَاخِرَةِ مِمَّنْ هُوَ مِنْهَا فِى شَكٍّ ۗ وَرَبُّكَ عَلَىٰ كُلِّ شَىْءٍ حَفِيظٌ ﴿٢١﴾

២១-ហើយវាគ្មានអំណាចទៅលើពួកគេឡើយ លើកលែងតែដើម្បីយើងសាកល្បងថា នរណាដែលមានជំនឿនឹងថ្ងៃបរលោកក្នុងចំណោមអ្នកដែលសង្ស័យអំពីវា។ ហើយម្ចាស់របស់អ្នកជាអ្នកថែរក្សាលើអ្វីៗទាំងអស់។

قُلِ ٱدْعُوا۟ ٱلَّذِينَ زَعَمْتُم مِّن دُونِ ٱللَّهِ ۖ لَا يَمْلِكُونَ مِثْقَالَ ذَرَّةٍ فِى ٱلسَّمَٰوَٰتِ وَلَا فِى ٱلْأَرْضِ وَمَا لَهُمْ فِيهِمَا مِن شِرْكٍ وَمَا لَهُۥ مِنْهُم مِّن ظَهِيرٍ ﴿٢٢﴾

២២-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកអំពាវនាវពួកដែលពួកអ្នកបានគិតថាជាព្រះក្រៅពីអល់ឡោះ ដែលពួកគេគ្មានកម្មសិទ្ធិគ្រប់គ្រងសូម្បីតែវត្ថុដែលមានទម្ងន់តូចបំផុតនៅលើមេឃជាច្រើនជាន់ និងនៅលើផែនដីក៏គ្មានដែរ។ ហើយពួកគេក៏គ្មានសិទ្ធិចូលរួម(ក្នុងការបង្កើត និងគ្រប់គ្រង)ចំពោះវាទាំងពីរដែរ។ ហើយទ្រង់មិនត្រូវការអ្នកជួយពីពួកគេឡើយ។

وَلَا تَنفَعُ ٱلشَّفَٰعَةُ عِندَهُۥٓ إِلَّا لِمَنْ أَذِنَ لَهُۥ ۚ حَتَّىٰٓ إِذَا فُزِّعَ عَن قُلُوبِهِمْ قَالُوا۟ مَاذَا قَالَ رَبُّكُمْ ۖ قَالُوا۟ ٱلْحَقَّ ۖ وَهُوَ ٱلْعَلِىُّ ٱلْكَبِيرُ ﴿٢٣﴾

២៣-ហើយការធ្វើអន្តរាគមន៍ គឺគ្មានផលប្រយោជន៍អ្វីចំពោះទ្រង់ឡើយ លើកលែងតែចំពោះអ្នកណាដែលទ្រង់បានអនុញ្ញាតឱ្យគេប៉ុណ្ណោះ។ លុះនៅពេលដែលគេបានបំបាត់ការភ័យខ្លាចចេញពីចិត្តរបស់ពួកគេ(ម៉ាឡាអ៊ីកាត់) ពួកគេបាននិយាយគ្នាថា: តើម្ចាស់របស់ពួកអ្នកមានបន្ទូលអ្វី? ពួកគេបានឆ្លើយថា: គឺមានបន្ទូលដ៏ពិត

ប្រាកដ ។ ហើយទ្រង់មហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម ។

۞ قُلْ مَن يَرْزُقُكُم مِّنَ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۖ قُلِ ٱللَّهُ ۖ وَإِنَّآ أَوْ إِيَّاكُمْ لَعَلَىٰ هُدًى أَوْ فِى ضَلَٰلٍ مُّبِينٍ ﴿٢٤﴾

២៤-ចូរអ្នកពោលថាៈ អ្នកណាជាអ្នកផ្តល់លាភសក្ការៈឱ្យពួកអ្នកពីលើមេឃជាច្រើនជាន់និងផែនដី? ចូរអ្នកពោលថាៈ គឺអល់ឡោះ ។ ហើយពិតប្រាកដណាស់ ពួកយើងឬក៏ពួកអ្នកច្បាស់ជាស្ថិតលើការចង្អុលបង្ហាញ ឬស្ថិតក្នុងភាពវង្វេងដ៏ច្បាស់លាស់ ។

قُل لَّا تُسْـَٔلُونَ عَمَّآ أَجْرَمْنَا وَلَا نُسْـَٔلُ عَمَّا تَعْمَلُونَ ﴿٢٥﴾

២៥-ចូរអ្នកពោលថាៈ ពួកអ្នកមិនត្រូវគេសួរអំពីអ្វីដែលពួកយើងបានប្រព្រឹត្តខុសនោះទេ ហើយពួកយើងក៏មិនត្រូវគេសួរអំពីអ្វីដែលពួកអ្នកប្រព្រឹត្តដែរ ។

قُلْ يَجْمَعُ بَيْنَنَا رَبُّنَا ثُمَّ يَفْتَحُ بَيْنَنَا بِٱلْحَقِّ وَهُوَ ٱلْفَتَّاحُ ٱلْعَلِيمُ ﴿٢٦﴾

២៦-ចូរអ្នកពោលថាៈ ម្ចាស់របស់ពួកយើងនឹងប្រមូលផ្តុំពួកយើងទាំងអស់គ្នា(នៅថ្ងៃបរលោក) ។ បន្ទាប់មកទ្រង់នឹងកាត់សេចក្តីរវាងពួកយើងដោយយុត្តិធម៌ ។ ហើយទ្រង់គឺជាអ្នកកាត់សេចក្តីដ៏យុត្តិធម៌ដឹងបំផុត ។

قُلْ أَرُونِىَ ٱلَّذِينَ أَلْحَقْتُم بِهِۦ شُرَكَآءَ ۖ كَلَّا ۚ بَلْ هُوَ ٱللَّهُ ٱلْعَزِيزُ ٱلْحَكِيمُ ﴿٢٧﴾

២៧-ចូរអ្នកពោលថាៈ ចូរពួកអ្នកបង្ហាញខ្ញុំមក ពួក(ព្រះនានា) ដែលពួកអ្នកបានយកមកគោរពសក្ការៈធ្វើជាដៃគូនឹងទ្រង់ ។ មិនដូច្នោះទេ ផ្ទុយទៅវិញទ្រង់គឺជាអល់ឡោះតែមួយគត់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

وَمَآ أَرْسَلْنَٰكَ إِلَّا كَآفَّةً لِّلنَّاسِ بَشِيرًا وَنَذِيرًا وَلَٰكِنَّ أَكْثَرَ ٱلنَّاسِ لَا يَعْلَمُونَ ﴿٢٨﴾

២៨-ហើយយើងមិនបានបញ្ជូនអ្នក(មូហាំម៉ាត់) លើកលែងតែទៅកាន់មនុស្សលោកទូទៅ ដើម្បីផ្តល់ដំណឹងរីករាយ និងដាស់តឿនព្រមានតែប៉ុណ្ណោះ ។ ក៏ប៉ុន្តែមនុស្សលោកភាគច្រើនមិនដឹងឡើយ ។

وَيَقُولُونَ مَتَىٰ هَٰذَا ٱلْوَعْدُ إِن كُنتُمْ صَٰدِقِينَ ﴿٢٩﴾

២៩-ហើយពួកគេ(ពួកប្រឆាំង)និយាយថាៈ តើថ្ងៃសន្យានេះ (ថ្ងៃបរលោក)នៅពេលណា? ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតមែននោះ ។

قُل لَّكُم مِّيعَادُ يَوْمٍ لَّا تَسْتَـْٔخِرُونَ عَنْهُ سَاعَةً وَلَا تَسْتَقْدِمُونَ ﴿٣٠﴾

៣០-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចំពោះពួកអ្នក គឺមានការសន្យានៅថ្ងៃមួយដែលពួកអ្នកមិនអាចសុំពន្យារ ឬសុំឱ្យវាមកដល់មុនពេលកំណត់មួយវិនាទីបានឡើយ ។

وَقَالَ ٱلَّذِينَ كَفَرُوا۟ لَن نُّؤْمِنَ بِهَٰذَا

៣១-ហើយពួកដែលប្រឆាំងបាននិយាយថាៈ ពួកយើងមិនជឿនឹងគម្ពីរគួរអាននេះជាដាច់ខាត ។ ហើយក៏មិនជឿនឹងអ្វីដែលមាន

ពីមុនវា(គម្ពីរតាវរ៉ត និងគម្ពីរអ៊ីញជីល)ដែរ។ ហើយប្រសិនបើអ្នកឃើញនៅពេលដែលពួកបំពានត្រូវបានគេរៀបឱ្យឈរនៅមុខម្ចាស់របស់ពួកគេ ពួកគេនឹងស្តីបន្ទោសគ្នាទៅវិញទៅមក ដោយពួកដែលត្រូវគេជិះជាន់និយាយទៅកាន់ពួកដែលក្រអឺតក្រទម(ពួកមេដឹក-នាំ)ថា: ប្រសិនបើគ្មានពួកអ្នក(ធ្វើឱ្យពួកយើងវង្វេង)ទេនោះ ពួកយើងពិតជាក្លាយជាបណ្តាអ្នកមានជំនឿជាមិនខាន។

៣២-ពួកដែលក្រអឺតក្រទមបាននិយាយទៅកាន់ពួកដែលត្រូវគេជិះជាន់វិញថា: តើពួកយើងបានហាមឃាត់ពួកអ្នកពីការចង្អុលបង្ហាញក្រោយពេលដែលវាបានមកដល់ពួកអ្នកឬ? ផ្ទុយទៅវិញ ពួកអ្នកទេដែលជាពួកសាងបាបកម្មនោះ។

៣៣-ពួកដែលត្រូវគេជិះជាន់បាននិយាយទៅកាន់ពួកក្រអឺតក្រទមវិញថា: ផ្ទុយទៅវិញ នោះជាឧបាយកលទាំងយប់ទាំងថ្ងៃនៅពេលពួកអ្នកបញ្ជាពួកយើងឱ្យប្រឆាំងនឹងអល់ឡោះ និងឱ្យពួកយើងធ្វើស្ហ៊ីរិកចំពោះទ្រង់។ ហើយពួកគេទាំងពីរក្រុមមានការសោកស្តាយយ៉ាងខ្លាំងនៅពេលដែលពួកគេបានឃើញទារុណកម្ម។ ហើយយើងបានដាក់ច្រវាក់កពួកដែលបានប្រឆាំង។ ពួកគេមិនត្រូវគេតបស្នងឡើយ លើកលែងតែអ្វីដែលពួកគេបានប្រព្រឹត្តប៉ុណ្ណោះ។

៣៤-ហើយរាល់ៗអ្នកដាស់តឿនព្រមានដែលយើងបានបញ្ជូនទៅកាន់ភូមិស្រុកណាមួយ គឺពួកដែលមានទ្រព្យសម្បត្តិស្តុកស្តម្ភនៃភូមិស្រុកនោះតែងតែនិយាយថា: ពិតប្រាកដណាស់ ពួកយើងគឺជាអ្នកដែលប្រឆាំងនឹងអ្វីដែលគេបញ្ជូនពួកអ្នកឱ្យនាំវាមក។

៣៥-ហើយពួកគេបាននិយាយថា: ពួកយើងគឺជាអ្នកដែលមានទ្រព្យសម្បត្តិ និងកូនចៅច្រើនជាងគេ ហើយពួកយើងមិនមែនជាអ្នកដែលត្រូវគេដាក់ទណ្ឌកម្មឡើយ។

៣៦-ចូរអ្នកពោលថា: ពិតប្រាកដណាស់ អល់ឡោះបើកទូលាយ និងក្បិតក្បៀតនូវលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនា។ ក៏ប៉ុន្តែមនុស្សលោកភាគច្រើនមិនដឹងឡើយ។

ٱلۡقُرۡءَانِ وَلَا بِٱلَّذِي بَيۡنَ يَدَيۡهِۗ وَلَوۡ تَرَىٰٓ إِذِ
ٱلظَّٰلِمُونَ مَوۡقُوفُونَ عِندَ رَبِّهِمۡ يَرۡجِعُ
بَعۡضُهُمۡ إِلَىٰ بَعۡضٍ ٱلۡقَوۡلَ يَقُولُ ٱلَّذِينَ
ٱسۡتُضۡعِفُواْ لِلَّذِينَ ٱسۡتَكۡبَرُواْ لَوۡلَآ أَنتُمۡ لَكُنَّا
مُؤۡمِنِينَ ٣١
قَالَ ٱلَّذِينَ ٱسۡتَكۡبَرُواْ لِلَّذِينَ ٱسۡتُضۡعِفُوٓاْ أَنَحۡنُ
صَدَدۡنَٰكُمۡ عَنِ ٱلۡهُدَىٰ بَعۡدَ إِذۡ جَآءَكُمۖ بَلۡ
كُنتُم مُّجۡرِمِينَ ٣٢
وَقَالَ ٱلَّذِينَ ٱسۡتُضۡعِفُواْ لِلَّذِينَ ٱسۡتَكۡبَرُواْ بَلۡ
مَكۡرُ ٱلَّيۡلِ وَٱلنَّهَارِ إِذۡ تَأۡمُرُونَنَآ أَن نَّكۡفُرَ بِٱللَّهِ
وَنَجۡعَلَ لَهُۥٓ أَندَادٗاۚ وَأَسَرُّواْ ٱلنَّدَامَةَ لَمَّا رَأَوُاْ
ٱلۡعَذَابَ وَجَعَلۡنَا ٱلۡأَغۡلَٰلَ فِيٓ أَعۡنَاقِ ٱلَّذِينَ
كَفَرُواْۚ هَلۡ يُجۡزَوۡنَ إِلَّا مَا كَانُواْ يَعۡمَلُونَ ٣٣
وَمَآ أَرۡسَلۡنَا فِي قَرۡيَةٖ مِّن نَّذِيرٍ إِلَّا قَالَ
مُتۡرَفُوهَآ إِنَّا بِمَآ أُرۡسِلۡتُم بِهِۦ كَٰفِرُونَ ٣٤
وَقَالُواْ نَحۡنُ أَكۡثَرُ أَمۡوَٰلٗا وَأَوۡلَٰدٗا وَمَا نَحۡنُ
بِمُعَذَّبِينَ ٣٥
قُلۡ إِنَّ رَبِّي يَبۡسُطُ ٱلرِّزۡقَ لِمَن يَشَآءُ وَيَقۡدِرُ
وَلَٰكِنَّ أَكۡثَرَ ٱلنَّاسِ لَا يَعۡلَمُونَ ٣٦

وَمَآ أَمۡوَٰلُكُمۡ وَلَآ أَوۡلَٰدُكُم بِٱلَّتِي تُقَرِّبُكُمۡ
عِندَنَا زُلۡفَىٰٓ إِلَّا مَنۡ ءَامَنَ وَعَمِلَ صَٰلِحٗا
فَأُوْلَٰٓئِكَ لَهُمۡ جَزَآءُ ٱلضِّعۡفِ بِمَا عَمِلُواْ وَهُمۡ
فِي ٱلۡغُرُفَٰتِ ءَامِنُونَ ٣٧

៣៧-ហើយពុំមែនទ្រព្យសម្បត្តិរបស់ពួកអ្នក និងកូនចៅរបស់ពួកអ្នកដែលធ្វើឱ្យពួកអ្នកជិតមកចំពោះយើងនោះឡើយ លើកលែងតែអ្នកដែលមានជំនឿនិងបានសាងអំពើល្អត្រឹមត្រូវប៉ុណ្ណោះ។ ដូច្នេះ អ្នកទាំងនោះនឹងទទួលបានការតបស្នងទ្វេដងដោយសារតែអ្វីដែលពួកគេបានសាង ហើយពួកគេជាអ្នកដែលមានសន្តិភាពបំផុតនៅកន្លែងដ៏ខ្ពង់ខ្ពស់( ឋានសួគ៌) ។

وَٱلَّذِينَ يَسۡعَوۡنَ فِيٓ ءَايَٰتِنَا مُعَٰجِزِينَ
أُوْلَٰٓئِكَ فِي ٱلۡعَذَابِ مُحۡضَرُونَ ٣٨

៣៨-ហើយពួកដែលព្យាយាមប្រឆាំងនឹងភស្តុតាងរបស់យើងដោយពួកគេប្រជែងចង់ឈ្នះនោះ ពួកទាំងនោះនឹងត្រូវគេនាំទៅកាន់ទារុណកម្ម។

قُلۡ إِنَّ رَبِّي يَبۡسُطُ ٱلرِّزۡقَ لِمَن يَشَآءُ
مِنۡ عِبَادِهِۦ وَيَقۡدِرُ لَهُۥۚ وَمَآ أَنفَقۡتُم
مِّن شَيۡءٖ فَهُوَ يُخۡلِفُهُۥۖ وَهُوَ خَيۡرُ
ٱلرَّٰزِقِينَ ٣٩

៣៩-ចូរអ្នកពោលថា: ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំបើកទូលាយនូវលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនាអំពីខ្ញុំរបស់ទ្រង់ ហើយទ្រង់ក៏ក្បិតក្បៀតចំពោះគេដែរ។ ហើយអ្វីបន្តិចក៏ដោយដែលពួកអ្នកបានបរិច្ចាគនោះ គឺទ្រង់នឹងតបស្នងវាវិញ។ ហើយទ្រង់ជាអ្នកប្រទានលាភសក្ការៈដ៏ល្អបំផុត។

وَيَوۡمَ يَحۡشُرُهُمۡ جَمِيعٗا ثُمَّ يَقُولُ لِلۡمَلَٰٓئِكَةِ
أَهَٰٓؤُلَآءِ إِيَّاكُمۡ كَانُواْ يَعۡبُدُونَ ٤٠

៤០-ហើយ( ចូរចងចាំ) នៅថ្ងៃដែលទ្រង់ប្រមូលផ្តុំពួកគេទាំងអស់គ្នា ក្រោយមកទ្រង់ក៏មានបន្ទូលទៅកាន់ម៉ាឡាអ៊ីកាត់ថា: តើអ្នកទាំងនេះឬដែលពួកគេធ្លាប់គោរពសក្ការៈមកចំពោះពួកអ្នក?

قَالُواْ سُبۡحَٰنَكَ أَنتَ وَلِيُّنَا مِن دُونِهِمۖ بَلۡ
كَانُواْ يَعۡبُدُونَ ٱلۡجِنَّۖ أَكۡثَرُهُم بِهِم
مُّؤۡمِنُونَ ٤١

៤១-ពួកគេ( ម៉ាឡាអ៊ីកាត់) បានតបវិញថា: ទ្រង់មហាស្អាតស្អំ! ទ្រង់ជាអ្នកគាំពារពួកយើង មិនមែនពួកគេឡើយ។ ផ្ទុយទៅវិញពួកគេធ្លាប់បានគោរពសក្ការៈចំពោះជិនដោយពួកគេភាគច្រើនជាអ្នកមានជំនឿនឹងពួកវា។

فَٱلۡيَوۡمَ لَا يَمۡلِكُ بَعۡضُكُمۡ لِبَعۡضٖ نَّفۡعٗا وَلَا
ضَرّٗا وَنَقُولُ لِلَّذِينَ ظَلَمُواْ ذُوقُواْ عَذَابَ
ٱلنَّارِ ٱلَّتِي كُنتُم بِهَا تُكَذِّبُونَ ٤٢

៤២-ហើយនៅថ្ងៃនេះ( ថ្ងៃបរលោក) ពួកអ្នកមិនអាចផ្តល់ផលប្រយោជន៍ ឬបង្កគ្រោះថ្នាក់ដល់គ្នាបានឡើយ។ ហើយយើងមានបន្ទូលទៅកាន់ពួកដែលបំពានថា: ចូរពួកអ្នកភ្លក្សទារុណកម្មនៃនរកដែលពួកអ្នកធ្លាប់បានបដិសេធនឹងវាចុះ។

وَإِذَا تُتۡلَىٰ عَلَيۡهِمۡ ءَايَٰتُنَا بَيِّنَٰتٖ قَالُواْ
مَا هَٰذَآ إِلَّا رَجُلٞ يُرِيدُ أَن يَصُدَّكُمۡ

៤៣-ហើយនៅពេលដែលអាយ៉ាត់ៗរបស់យើងដ៏ច្បាស់លាស់ត្រូវបានសូត្រឱ្យពួកគេស្តាប់ ពួកគេបាននិយាយថា: បុរសម្នាក់នេះ

(មូហាំម៉ាត់) មានបំណងចង់រារាំងពួកអ្នកអំពីអ្វីដែលជីដូនជីតារបស់ពួកអ្នកធ្លាប់បានគោរព ។ ហើយពួកគេបាននិយាយទៀតថា: នេះ (គម្ពីរគួរអាន) មិនមែនជាអ្វីក្រៅពីការភូតកុហកដែលត្រូវគេប្រឌិតនោះឡើយ ។ ហើយពួកប្រឆាំងបាននិយាយចំពោះការពិត នៅពេលដែលវាបានមកដល់ពួកគេថា: នេះគ្មានអ្វីក្រៅពីមន្តអាគមយ៉ាងច្បាស់លាស់នោះឡើយ ។

عَمَّا كَانَ يَعۡبُدُ ءَابَآؤُكُمۡ وَقَالُواْ مَا هَٰذَآ إِلَّآ إِفۡكٞ مُّفۡتَرٗىۚ وَقَالَ ٱلَّذِينَ كَفَرُواْ لِلۡحَقِّ لَمَّا جَآءَهُمۡ إِنۡ هَٰذَآ إِلَّا سِحۡرٞ مُّبِينٞ ﴿٤٣﴾

៤៤-ហើយយើងមិនបានផ្តល់ឱ្យពួកគេនូវគម្ពីរណាដែលពួកគេអាចរៀនសូត្រវានោះឡើយ ។ ហើយយើងក៏មិនបានបញ្ជូនអ្នកដាស់តឿនព្រមានណាមុនអ្នក (មូហាំម៉ាត់) ទៅកាន់ពួកគេដែរ ។

وَمَآ ءَاتَيۡنَٰهُم مِّن كُتُبٖ يَدۡرُسُونَهَاۖ وَمَآ أَرۡسَلۡنَآ إِلَيۡهِمۡ قَبۡلَكَ مِن نَّذِيرٖ ﴿٤٤﴾

៤៥-ហើយពួកដែលពីមុនពួកគេបានបដិសេធ (នឹងបណ្តាអ្នកនាំសាររបស់ពួកគេ) ។ហើយពួកគេ (មូស្ហរីគីន) មិនទាន់បានទទួលសូម្បីតែមួយភាគដប់នៃអ្វីដែលយើងបានប្រទានឱ្យពួកគេ (ពួកជំនាន់មុន) ផង ស្រាប់តែពួកគេបានបដិសេធនឹងបណ្តាអ្នកនាំសាររបស់យើង ។ តើទារុណកម្មរបស់យើង (ចំពោះពួកគេ) យ៉ាងដូចម្តេច ?

وَكَذَّبَ ٱلَّذِينَ مِن قَبۡلِهِمۡ وَمَا بَلَغُواْ مِعۡشَارَ مَآ ءَاتَيۡنَٰهُمۡ فَكَذَّبُواْ رُسُلِيۖ فَكَيۡفَ كَانَ نَكِيرِ ﴿٤٥﴾

៤៦-ចូរអ្នក (មូហាំម៉ាត់) ពោលថា: ពិតប្រាកដណាស់ ខ្ញុំទូន្មានពួកអ្នកតែមួយគត់ គឺឱ្យពួកអ្នកប្រឈមមុខពីរនាក់ ឬម្នាក់ឯងដើម្បីអល់ឡោះ ។ ក្រោយមកចូរពួកអ្នកពិចារណាថា: មិត្តរបស់ពួកអ្នក (មូហាំម៉ាត់) ពុំមែនជាមនុស្សវិកលចរិតឡើយ ។ គេគ្មានអ្វីក្រៅពីជាអ្នកដាស់តឿនព្រមានសម្រាប់ពួកអ្នក មុននឹងទារុណកម្មដ៏ខ្លាំងក្លាមកដល់នោះឡើយ ។

۞ قُلۡ إِنَّمَآ أَعِظُكُم بِوَٰحِدَةٍۖ أَن تَقُومُواْ لِلَّهِ مَثۡنَىٰ وَفُرَٰدَىٰ ثُمَّ تَتَفَكَّرُواْۚ مَا بِصَاحِبِكُم مِّن جِنَّةٍۚ إِنۡ هُوَ إِلَّا نَذِيرٞ لَّكُم بَيۡنَ يَدَيۡ عَذَابٖ شَدِيدٖ ﴿٤٦﴾

៤៧-ចូរអ្នកពោលថា: អ្វីដែលខ្ញុំទាមទារថ្លៃឈ្នួលពីពួកអ្នកនោះ គឺវាសម្រាប់ពួកអ្នកប៉ុណ្ណោះ ។ តែផលបុណ្យនៃការអំពាវនាវរបស់ខ្ញុំគឺនៅលើអល់ឡោះ ។ ហើយទ្រង់ជាសាក្សីលើអ្វីៗទាំងអស់ ។

قُلۡ مَا سَأَلۡتُكُم مِّنۡ أَجۡرٖ فَهُوَ لَكُمۡۖ إِنۡ أَجۡرِيَ إِلَّا عَلَى ٱللَّهِۖ وَهُوَ عَلَىٰ كُلِّ شَيۡءٖ شَهِيدٞ ﴿٤٧﴾

៤៨-ចូរអ្នកពោលថា: ពិតប្រាកដណាស់ ម្ចាស់របស់ខ្ញុំបញ្ចុះវ៉ាហ៊ីដោយការពិត ដែលទ្រង់មហាដឹងនូវអាថិកំបាំងទាំងឡាយ ។

قُلۡ إِنَّ رَبِّي يَقۡذِفُ بِٱلۡحَقِّ عَلَّٰمُ ٱلۡغُيُوبِ ﴿٤٨﴾

៤៩-ចូរអ្នកពោលថា: ការពិតបានមកដល់ ហើយប្រការមិនពិតក៏រលាយបាត់ ហើយវាក៏មិនអាចវិលត្រឡប់មកវិញបានដែរ ។

قُلۡ جَآءَ ٱلۡحَقُّ وَمَا يُبۡدِئُ ٱلۡبَٰطِلُ وَمَا

يُعِيدُ ﴿٤٩﴾

قُلْ إِن ضَلَلْتُ فَإِنَّمَآ أَضِلُّ عَلَىٰ نَفْسِى ۖ وَإِنِ
ٱهْتَدَيْتُ فَبِمَا يُوحِىٓ إِلَىَّ رَبِّىٓ ۚ إِنَّهُۥ سَمِيعٌ
قَرِيبٌ ﴿٥٠﴾

៥០-ចូរអ្នកពោលថាៈ ប្រសិនបើខ្ញុំវង្វេង( ប្រាសចាកពីមាគ៌ាត្រឹមត្រូវ) មែននោះ គឺពិតប្រាកដណាស់ ខ្ញុំវង្វេងដោយខ្លួនឯង។ តែប្រសិនបើខ្ញុំទទួលបានការចង្អុលបង្ហាញវិញនោះ គឺដោយសារតែអ្វីដែលម្ចាស់របស់ខ្ញុំផ្តល់វ៉ាហ៊ីឱ្យខ្ញុំ។ ពិតប្រាកដណាស់ ទ្រង់មហាឮ ជិតបំផុត។

وَلَوْ تَرَىٰٓ إِذْ فَزِعُوا۟ فَلَا فَوْتَ وَأُخِذُوا۟ مِن
مَّكَانٍ قَرِيبٍ ﴿٥١﴾

៥១-ហើយប្រសិនបើអ្នក( មូហាំម៉ាត់) មើលឃើញនៅពេលដែលពួកគេភ័យខ្លាច( ទារុណកម្មរបស់អល់ឡោះ) គឺគ្មានការគេចវេះបានឡើយ ហើយពួកគេត្រូវបានគេចាប់មកពីកន្លែងដែលជិតបំផុត។

وَقَالُوٓا۟ ءَامَنَّا بِهِۦ وَأَنَّىٰ لَهُمُ ٱلتَّنَاوُشُ مِن
مَّكَانٍۭ بَعِيدٍ ﴿٥٢﴾

៥២-ហើយពួកគេបាននិយាយថាៈ ពួកយើងជឿលើទ្រង់ហើយ។ ហើយតើពួកគេទទួលជំនឿពីកន្លែងដែលឆ្ងាយបានយ៉ាងដូចម្តេច ?

وَقَدْ كَفَرُوا۟ بِهِۦ مِن قَبْلُ ۖ وَيَقْذِفُونَ
بِٱلْغَيْبِ مِن مَّكَانٍۭ بَعِيدٍ ﴿٥٣﴾

៥៣-ហើយជាការពិតណាស់ ពួកគេបានប្រឆាំងនឹងទ្រង់តាំងពីមុនមកម្ល៉េះ។ ហើយអ្វីដែលពួកគេចោទប្រកាន់ក្នុងរឿងអាថ៌កំបាំងនោះ គឺខុសដ៏សែនឆ្ងាយ។

وَحِيلَ بَيْنَهُمْ وَبَيْنَ مَا يَشْتَهُونَ كَمَا فُعِلَ
بِأَشْيَاعِهِم مِّن قَبْلُ ۚ إِنَّهُمْ كَانُوا۟ فِى شَكٍّ
مُّرِيبٍۭ ﴿٥٤﴾

៥៤-ហើយពួកគេត្រូវបានគេរារាំងអំពីអ្វីដែលពួកគេចូលចិត្តដូចអ្វីដែលត្រូវបានគេធ្វើចំពោះពួកដែលដូចពួកគេកាលពីមុនដែរ។ ពិតប្រាកដណាស់ ពួកគេស្ថិតនៅក្នុងភាពសង្ស័យដ៏ជ្រាលជ្រៅ។

## سورة فاطر

## ជំពូកហ្វាតៀរ

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

ٱلْحَمْدُ لِلَّهِ فَاطِرِ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ جَاعِلِ
ٱلْمَلَٰٓئِكَةِ رُسُلًا أُو۟لِىٓ أَجْنِحَةٍ مَّثْنَىٰ وَثُلَٰثَ
وَرُبَٰعَ ۚ يَزِيدُ فِى ٱلْخَلْقِ مَا يَشَآءُ ۚ إِنَّ ٱللَّهَ عَلَىٰ
كُلِّ شَىْءٍ قَدِيرٌ ﴿١﴾

១-រាល់ការសរសើរគឺចំពោះអល់ឡោះដែលជាអ្នកបង្កើតមេឃជាច្រើនជាន់និងផែនដី ដែលជាអ្នកបង្កើតម៉ាឡាអ៊ីកាត់ធ្វើជាអ្នកនាំសារដែលមានស្លាបជាច្រើន មានពីរ មានបី និងមានបួន។ ទ្រង់បន្ថែមក្នុងការបង្កើតនូវអ្វីដែលទ្រង់មានចេតនា។ ពិតប្រាកដណាស់ អល់ឡោះមានអានុភាពលើអ្វីៗទាំងអស់។

مَّا يَفْتَحِ ٱللَّهُ لِلنَّاسِ مِن رَّحْمَةٍ فَلَا مُمْسِكَ لَهَا ۖ وَمَا يُمْسِكْ فَلَا مُرْسِلَ لَهُۥ مِنۢ بَعْدِهِۦ ۚ وَهُوَ ٱلْعَزِيزُ ٱلْحَكِيمُ ﴿٢﴾

២-អ្វីក៏ដោយដែលអល់ឡោះប្រទានឱ្យមនុស្សលោកនូវក្ដីមេត្ដាករុណា(ដូចជាផ្ដល់ទឹកភ្លៀង លាភសក្ការៈ សុខភាព ចំណេះដឹង)គឺគ្មានអ្នកណាម្នាក់អាចរារាំងវាឡើយ ។ ហើយអ្វីដែលទ្រង់រារាំង គឺគ្មានអ្នកណាម្នាក់អាចបញ្ជូនវាបន្ទាប់ពីទ្រង់ឡើយ ។ ហើយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

يَـٰٓأَيُّهَا ٱلنَّاسُ ٱذْكُرُوا۟ نِعْمَتَ ٱللَّهِ عَلَيْكُمْ ۚ هَلْ مِنْ خَـٰلِقٍ غَيْرُ ٱللَّهِ يَرْزُقُكُم مِّنَ ٱلسَّمَآءِ وَٱلْأَرْضِ ۚ لَآ إِلَـٰهَ إِلَّا هُوَ ۖ فَأَنَّىٰ تُؤْفَكُونَ ﴿٣﴾

៣-ឱមនុស្សលោក! ចូរពួកអ្នករំលឹកនៀកម៉ាត់របស់អល់ឡោះដែលបានប្រទានឱ្យពួកអ្នកចុះ ។ តើមានអ្នកបង្កើតផ្សេងពីអល់ឡោះដែលវាអាចប្រទានលាភសក្ការៈឱ្យពួកអ្នកពីលើមេឃនិងផែនដីដែរឬទេ? គ្មានម្ចាស់ណាផ្សេងត្រូវគេគោរពសក្ការៈពិតប្រាកដក្រៅពីទ្រង់ឡើយ ។ ដូច្នេះ តើពួកអ្នកត្រូវគេបោកបញ្ឆោតបានយ៉ាងដូចម្ដេច?

وَإِن يُكَذِّبُوكَ فَقَدْ كُذِّبَتْ رُسُلٌ مِّن قَبْلِكَ ۚ وَإِلَى ٱللَّهِ تُرْجَعُ ٱلْأُمُورُ ﴿٤﴾

៤-ហើយប្រសិនបើពួកគេ(ពួកមូស្ហរីគីន)បដិសេធនឹងអ្នក(មូហាំម៉ាត់) ជាការពិតណាស់បណ្ដាអ្នកនាំសារមុនអ្នកក៏ត្រូវបានគេបដិសេធដែរ ។ ហើយកិច្ចការទាំងអស់នឹងវិលត្រឡប់ទៅកាន់អល់ឡោះវិញ ។

يَـٰٓأَيُّهَا ٱلنَّاسُ إِنَّ وَعْدَ ٱللَّهِ حَقٌّ ۖ فَلَا تَغُرَّنَّكُمُ ٱلْحَيَوٰةُ ٱلدُّنْيَا ۖ وَلَا يَغُرَّنَّكُم بِٱللَّهِ ٱلْغَرُورُ ﴿٥﴾

៥-ឱមនុស្សលោក! ពិតប្រាកដណាស់ ការសន្យារបស់អល់ឡោះគឺជាការពិត ។ ដូច្នេះ ចូរកុំឱ្យជីវិតលោកិយបោកបញ្ឆោតពួកអ្នកឱ្យសោះ ។ ហើយកុំឱ្យពួកបោកប្រាស់(ស្ហៃតន ជិន និងមនុស្ស)បោកបញ្ឆោតពួកអ្នកប្រឆាំងនឹងអល់ឡោះឱ្យសោះ ។

إِنَّ ٱلشَّيْطَـٰنَ لَكُمْ عَدُوٌّ فَٱتَّخِذُوهُ عَدُوًّا ۚ إِنَّمَا يَدْعُوا۟ حِزْبَهُۥ لِيَكُونُوا۟ مِنْ أَصْحَـٰبِ ٱلسَّعِيرِ ﴿٦﴾

៦-ពិតប្រាកដណាស់ ស្ហៃតនគឺជាសត្រូវរបស់ពួកអ្នក ។ ដូច្នេះចូរពួកអ្នកចាត់ទុកវាជាសត្រូវចុះ ។ តាមពិតវាគ្រាន់តែអំពាវនាវបក្សពួករបស់វាឱ្យស្ថិតក្នុងចំណោមពួកដែលចូលនរកដែលឆេះសន្ធោសន្ធៅប៉ុណ្ណោះ ។

ٱلَّذِينَ كَفَرُوا۟ لَهُمْ عَذَابٌ شَدِيدٌ ۖ وَٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّـٰلِحَـٰتِ لَهُم مَّغْفِرَةٌ وَأَجْرٌ كَبِيرٌ ﴿٧﴾

៧-ពួកដែលប្រឆាំងនឹងទទួលទារុណកម្មយ៉ាងធ្ងន់ធ្ងរ ។ រីឯបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អវិញ ពួកគេនឹងទទួលបានការអភ័យទោសនិងផលបុណ្យដ៏ធំធេង ។

أَفَمَن زُيِّنَ لَهُۥ سُوٓءُ عَمَلِهِۦ فَرَءَاهُ حَسَنًا ۖ فَإِنَّ

៨-ហើយតើអ្នកដែលត្រូវបានស្ហៃតនតុបតែងលំអសម្រាប់គេ

ٱللَّهَ يُضِلُّ مَن يَشَآءُ وَيَهۡدِي مَن يَشَآءُۖ فَلَا
تَذۡهَبۡ نَفۡسُكَ عَلَيۡهِمۡ حَسَرَٰتٍۚ إِنَّ ٱللَّهَ عَلِيمُۢ
بِمَا يَصۡنَعُونَ ﴿٨﴾

នូវអំពើអាក្រក់របស់គេ ហើយគេយល់ឃើញថា វាជាប្រការល្អ (ដូចអ្នកដែលអល់ឡោះចង្អុលបង្ហាញ) ឬ? ហើយពិតប្រាកដណាស់ អល់ឡោះធ្វើឱ្យវង្វេងចំពោះអ្នកណាដែលទ្រង់មានចេតនា ហើយទ្រង់ក៏ចង្អុលបង្ហាញចំពោះអ្នកណាដែលទ្រង់មានចេតនាដែរ ។ ដូច្នេះ ចូរអ្នកកុំបំផ្លាញខ្លួនឯងដោយសារភាពទុក្ខព្រួយចំពោះពួកគេឱ្យសោះ ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹងនូវអ្វីដែលពួកគេប្រព្រឹត្ត ។

وَٱللَّهُ ٱلَّذِيٓ أَرۡسَلَ ٱلرِّيَٰحَ فَتُثِيرُ سَحَابٗا
فَسُقۡنَٰهُ إِلَىٰ بَلَدٖ مَّيِّتٖ فَأَحۡيَيۡنَا بِهِ ٱلۡأَرۡضَ
بَعۡدَ مَوۡتِهَاۚ كَذَٰلِكَ ٱلنُّشُورُ ﴿٩﴾

៩-ហើយអល់ឡោះជាអ្នកដែលបញ្ជូនខ្យល់ រួចទ្រង់ធ្វើឱ្យពពករសាត់ ។ ហើយយើងបានស្រោចស្រពវា(ទឹកភ្លៀង) ទៅលើស្រុកទេសដែលស្លាប់(ដីគ្មានជីជាតិ) បន្ទាប់មកយើងបានធ្វើឱ្យដីនោះរស់ឡើងវិញ(មានជីជាតិ) តាមរយៈវាក្រោយពីវាស្លាប់ ។ ការធ្វើឱ្យរស់ឡើងវិញ(ចេញពីផ្នូរ) ក៏ដូច្នោះដែរ ។

مَن كَانَ يُرِيدُ ٱلۡعِزَّةَ فَلِلَّهِ ٱلۡعِزَّةُ جَمِيعًاۚ إِلَيۡهِ
يَصۡعَدُ ٱلۡكَلِمُ ٱلطَّيِّبُ وَٱلۡعَمَلُ ٱلصَّٰلِحُ
يَرۡفَعُهُۥۚ وَٱلَّذِينَ يَمۡكُرُونَ ٱلسَّيِّـَٔاتِ لَهُمۡ
عَذَابٞ شَدِيدٞۖ وَمَكۡرُ أُوْلَٰٓئِكَ هُوَ يَبُورُ ﴿١٠﴾

១០-អ្នកណាហើយដែលចង់បានភាពថ្កុំថ្កើង គឺភាពថ្កុំថ្កើងទាំងអស់នោះជាកម្មសិទ្ធិរបស់អល់ឡោះ ។ ពាក្យសំដីដែលល្អនឹងឡើងទៅកាន់ទ្រង់ ហើយអំពើល្អលើកតម្កើងវា(សំដីល្អ) ។ រីឯពួកដែលប្រព្រឹត្តអំពើអាក្រក់ទាំងឡាយវិញ ពួកគេនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរ ។ ហើយទង្វើអាក្រក់របស់ពួកទាំងនោះនឹងវិនាស ។

وَٱللَّهُ خَلَقَكُم مِّن تُرَابٖ ثُمَّ مِن نُّطۡفَةٖ ثُمَّ
جَعَلَكُمۡ أَزۡوَٰجٗاۚ وَمَا تَحۡمِلُ مِنۡ أُنثَىٰ وَلَا
تَضَعُ إِلَّا بِعِلۡمِهِۦۚ وَمَا يُعَمَّرُ مِن مُّعَمَّرٖ وَلَا
يُنقَصُ مِنۡ عُمُرِهِۦٓ إِلَّا فِي كِتَٰبٍۚ إِنَّ ذَٰلِكَ
عَلَى ٱللَّهِ يَسِيرٞ ﴿١١﴾

១១-ហើយអល់ឡោះបានបង្កើតពួកអ្នកអំពីដី(គឺអាដាំ) បន្ទាប់មកពីទឹកកាម(មនុស្សគ្រប់រូប) ក្រោយមកទ្រង់បានបង្កើតពួកអ្នកជាគូៗ ។ ហើយគ្មានស្ត្រីណាដែលពពោះ និងគ្មានស្ត្រីណាដែលប្រសូត្របុត្រក្រៅពីស្ថិតក្រោមការដឹងរបស់ទ្រង់ឡើយ ។ ហើយអ្នកដែលមានអាយុវែងគ្មានអ្នកណាពន្យារនិងកាត់បន្ថយអាយុរបស់គេបានឡើយ លើកលែងតែមាននៅក្នុងសៀវភៅកំណត់ត្រា(ឡារ៉ុហុលម៉ះហ្វ៊ូស) ប៉ុណ្ណោះ ។ ពិតប្រាកដណាស់ រឿងនោះគឺងាយស្រួលបំផុតសម្រាប់អល់ឡោះ ។

وَمَا يَسۡتَوِي ٱلۡبَحۡرَانِ هَٰذَا عَذۡبٞ فُرَاتٞ
سَآئِغٞ شَرَابُهُۥ وَهَٰذَا مِلۡحٌ أُجَاجٞۖ وَمِن كُلّٖ

១២-ហើយសមុទ្រពីរមិនអាចស្មើគ្នាបានឡើយ មួយនេះជាទឹកសាបបំបាត់ការស្រេក និងងាយស្រួលទទួលទានវា និងមួយទៀតប្រៃល្វីង ។ ហើយរាល់សមុទ្រទាំងអស់ពួកអ្នកអាចបរិភោគនូវសាច់

تَأْكُلُونَ لَحْمًا طَرِيًّا وَتَسْتَخْرِجُونَ حِلْيَةً تَلْبَسُونَهَا ۖ وَتَرَى ٱلْفُلْكَ فِيهِ مَوَاخِرَ لِتَبْتَغُوا۟ مِن فَضْلِهِۦ وَلَعَلَّكُمْ تَشْكُرُونَ ﴿١٢﴾

ស្រស់។ និងពួកអ្នកអាចយកចេញពីវា(សមុទ្រ)នូវគ្រឿងអលង្ការ ដើម្បីពួកអ្នកពាក់វា។ ហើយអ្នកក៏អាចមើលឃើញនាវាអណ្តែត នៅលើវាដែរ ដើម្បីពួកអ្នកស្វែងរកនូវការប្រោសប្រទានរបស់ទ្រង់ និងសង្ឃឹមថាពួកអ្នកនឹងដឹងគុណ។

يُولِجُ ٱلَّيْلَ فِى ٱلنَّهَارِ وَيُولِجُ ٱلنَّهَارَ فِى ٱلَّيْلِ وَسَخَّرَ ٱلشَّمْسَ وَٱلْقَمَرَ كُلٌّ يَجْرِى لِأَجَلٍ مُّسَمًّى ۚ ذَٰلِكُمُ ٱللَّهُ رَبُّكُمْ لَهُ ٱلْمُلْكُ ۚ وَٱلَّذِينَ تَدْعُونَ مِن دُونِهِۦ مَا يَمْلِكُونَ مِن قِطْمِيرٍ ﴿١٣﴾

១៣-ទ្រង់បញ្ចូលពេលយប់ទៅក្នុងពេលថ្ងៃ និងបញ្ចូលពេលថ្ងៃ ទៅក្នុងពេលយប់វិញ។ ហើយទ្រង់បានបញ្ជាព្រះអាទិត្យ និងព្រះច័ន្ទ ឱ្យវាទាំងពីរដើរទៅតាមគន្លងរហូតដល់ពេលកំណត់។ នោះហើយ គឺអល់ឡោះជាម្ចាស់របស់ពួកអ្នក ដែលអំណាចទាំងអស់ជាកម្មសិទ្ធិ របស់ទ្រង់។ ហើយពួកដែលពួកអ្នកបួងសួងសុំផ្សេងពីទ្រង់នោះ ពួក គេគ្មានអំណាចឡើយ សូម្បីតែប៉ុនស្រទាប់គ្រាប់ល្មើក៏ដោយ។

إِن تَدْعُوهُمْ لَا يَسْمَعُوا۟ دُعَآءَكُمْ وَلَوْ سَمِعُوا۟ مَا ٱسْتَجَابُوا۟ لَكُمْ ۖ وَيَوْمَ ٱلْقِيَٰمَةِ يَكْفُرُونَ بِشِرْكِكُمْ ۚ وَلَا يُنَبِّئُكَ مِثْلُ خَبِيرٍ ﴿١٤﴾

១៤-ទោះបីជាពួកអ្នកបួងសួងសុំពីពួកវា(ព្រះនានា)ក៏ដោយ ក៏ ពួកវាមិនស្តាប់ឮការបួងសួងសុំរបស់ពួកអ្នកដែរ។ តែប្រសិនបើពួក វាបានឮ ក៏ពួកវាមិនអាចឆ្លើយតបចំពោះពួកអ្នកបានដែរ។ ហើយ នៅថ្ងៃបរលោកពួកវានឹងបដិសេធនូវទង្វើស្ហ៊ីរិករបស់ពួកអ្នក។ ហើយគ្មានអ្នកណាម្នាក់អាចផ្តល់ដំណឹងឱ្យអ្នក(មូហាំម៉ាត់)ដូចអ្នក ដែលមហាដឹងជ្រួតជ្រាបបានឡើយ។

۞ يَٰٓأَيُّهَا ٱلنَّاسُ أَنتُمُ ٱلْفُقَرَآءُ إِلَى ٱللَّهِ ۖ وَٱللَّهُ هُوَ ٱلْغَنِىُّ ٱلْحَمِيدُ ﴿١٥﴾

១៥-ឱមនុស្សលោក! ពួកអ្នកគឺជាអ្នកដែលត្រូវការអល់ឡោះ បំផុត។ ហើយអល់ឡោះមហាមានលើសលប់ ជាទីកោតសរសើរ។

إِن يَشَأْ يُذْهِبْكُمْ وَيَأْتِ بِخَلْقٍ جَدِيدٍ ﴿١٦﴾

១៦-ប្រសិនបើទ្រង់មានចេតនា ទ្រង់នឹងធ្វើឱ្យពួកអ្នកវិនាស ហើយទ្រង់នឹងបង្កើតអ្នកថ្មីទៀតមកជំនួសវិញ។

وَمَا ذَٰلِكَ عَلَى ٱللَّهِ بِعَزِيزٍ ﴿١٧﴾

១៧-ហើយរឿងនោះ គ្មានការលំបាកចំពោះអល់ឡោះឡើយ។

وَلَا تَزِرُ وَازِرَةٌ وِزْرَ أُخْرَىٰ ۚ وَإِن تَدْعُ مُثْقَلَةٌ إِلَىٰ حِمْلِهَا لَا يُحْمَلْ مِنْهُ شَىْءٌ وَلَوْ كَانَ ذَا قُرْبَىٰٓ ۗ إِنَّمَا تُنذِرُ ٱلَّذِينَ يَخْشَوْنَ رَبَّهُم بِٱلْغَيْبِ وَأَقَامُوا۟ ٱلصَّلَوٰةَ ۚ وَمَن تَزَكَّىٰ فَإِنَّمَا

១៨-ហើយអ្នកដែលសាងបាបកម្មមិនអាចទទួលបន្ទុកចំពោះ បាបកម្មរបស់អ្នកដទៃបានឡើយ។ ហើយប្រសិនបើអ្នកដែលមាន បាបកម្មធ្ងន់ធ្ងរអំពាវនាវឱ្យគេជួយរែកពន់បាបកម្មរបស់គេគឺគ្មាន អ្នកណាអាចជួយរែកពន់អ្វីមួយពីគេបានឡើយ ទោះបីគេជាសាច់ ញាតិនឹងគ្នាក៏ដោយ។ តាមពិតអ្នក(មូហាំម៉ាត់) គ្រាន់តែជាអ្នក ដាស់តឿនព្រមានចំពោះបណ្តាអ្នកដែលកោតខ្លាចម្ចាស់របស់

ពួកគេទាំងអាថិកំបាំង និងបានប្រតិបត្តិសឡាតប៉ុណ្ណោះ ។ ហើយអ្នកណាដែលបានសំអាតខ្លួន(អំពីអំពើស្ហ៊ីរិកនិងអំពើអាក្រក់) ពិតប្រាកដណាស់ គេបានសំអាតសម្រាប់ខ្លួនគេផ្ទាល់ប៉ុណ្ណោះ ។ ហើយទៅចំពោះអល់ឡោះគឺជាកន្លែងវិលត្រឡប់ចុងក្រោយ ។

يَتَزَكَّىٰ لِنَفۡسِهِۦۚ وَإِلَى ٱللَّهِ ٱلۡمَصِيرُ (١٨)

១៩-ហើយអ្នកដែលងងឹតភ្នែក និងអ្នកដែលមើលឃើញមិនស្មើគ្នាឡើយ ។

وَمَا يَسۡتَوِي ٱلۡأَعۡمَىٰ وَٱلۡبَصِيرُ (١٩)

២០-ហើយភាពងងឹត និងភាពមានពន្លឺមិនស្មើគ្នាឡើយ ។

وَلَا ٱلظُّلُمَٰتُ وَلَا ٱلنُّورُ (٢٠)

២១-ហើយកន្លែងម្លប់ និងកន្លែងក្តៅក៏មិនស្មើគ្នាដែរ ។

وَلَا ٱلظِّلُّ وَلَا ٱلۡحَرُورُ (٢١)

២២-ហើយអ្នកដែលរស់ និងអ្នកដែលស្លាប់ក៏មិនស្មើគ្នាដែរ ។ ពិតប្រាកដណាស់ អល់ឡោះធ្វើឱ្យស្តាប់ឮចំពោះអ្នកណាដែលទ្រង់មានចេតនា ។ ហើយអ្នក(មូហាំម៉ាត់)ពុំមែនជាអ្នកដែលធ្វើឱ្យអ្នកដែលនៅក្នុងផ្នូរស្តាប់ឮបានឡើយ ។

وَمَا يَسۡتَوِي ٱلۡأَحۡيَآءُ وَلَا ٱلۡأَمۡوَٰتُۚ إِنَّ ٱللَّهَ يُسۡمِعُ مَن يَشَآءُۖ وَمَآ أَنتَ بِمُسۡمِعٖ مَّن فِي ٱلۡقُبُورِ (٢٢)

២៣-អ្នក(មូហាំម៉ាត់)ពុំមែនជាអ្វីក្រៅពីជាអ្នកដាស់តឿនព្រមាននោះឡើយ ។

إِنۡ أَنتَ إِلَّا نَذِيرٌ (٢٣)

២៤-ពិតប្រាកដណាស់ យើងបានបញ្ជូនអ្នក(មូហាំម៉ាត់)ជាមួយនឹងការពិត ដើម្បីធ្វើជាអ្នកផ្តល់ដំណឹងរីករាយ និងជាអ្នកដាស់តឿនព្រមាន ។ ហើយរាល់ប្រជាជាតិនីមួយៗគឺតែងតែមានអ្នកដាស់តឿនព្រមានទៅដល់ពួកគេ ។

إِنَّآ أَرۡسَلۡنَٰكَ بِٱلۡحَقِّ بَشِيرٗا وَنَذِيرٗاۚ وَإِن مِّنۡ أُمَّةٍ إِلَّا خَلَا فِيهَا نَذِيرٞ (٢٤)

២៥-ហើយប្រសិនបើពួកគេបដិសេធនឹងអ្នក គឺពិតណាស់ពួកជំនាន់មុនពួកគេក៏បានបដិសេធ(នឹងបណ្តាអ្នកនាំសាររបស់ពួកគេ)ដែរ ខណៈដែលបណ្តាអ្នកនាំសាររបស់ពួកគេបាននាំមកឱ្យពួកគេនូវភស្តុតាងយ៉ាងច្បាស់លាស់ជាច្រើន និងបណ្តាគម្ពីរ(ដូចជាស្ហ៊ូហ្វហ្វអ៊ីព្រហ៊ីម)និងគម្ពីរដ៏ត្រចះត្រចង់(ដូចជាគម្ពីរតាវរ៉ាត និងគម្ពីរអ៊ិញជីល) ។

وَإِن يُكَذِّبُوكَ فَقَدۡ كَذَّبَ ٱلَّذِينَ مِن قَبۡلِهِمۡ جَآءَتۡهُمۡ رُسُلُهُم بِٱلۡبَيِّنَٰتِ وَبِٱلزُّبُرِ وَبِٱلۡكِتَٰبِ ٱلۡمُنِيرِ (٢٥)

២៦-ក្រោយមកយើងបានដាក់ទណ្ឌកម្មពួកដែលប្រឆាំង ។ ដូច្នេះ តើទារុណកម្មរបស់យើងយ៉ាងដូចម្តេចដែរ ?

ثُمَّ أَخَذۡتُ ٱلَّذِينَ كَفَرُواْۖ فَكَيۡفَ كَانَ نَكِيرِ (٢٦)

២៧-តើអ្នក(មូហាំម៉ាត់) មិនបានឃើញទេឬ ពិតប្រាកដណាស់ អល់ឡោះបានបញ្ចុះទឹកភ្លៀងពីលើមេឃ ហើយតាមរយៈវា យើងបានបញ្ចេញផលានុផលគ្រប់ប្រភេទដែលពណ៌របស់វាខុសៗគ្នា ហើយភ្នំមួយចំនួនមានឆ្នូតដែលពណ៌របស់វាខុសៗគ្នា គឺមានពណ៌ស ពណ៌ក្រហម និងពណ៌ខ្មៅងងឹតនោះ?

أَلَمۡ تَرَ أَنَّ ٱللَّهَ أَنزَلَ مِنَ ٱلسَّمَآءِ مَآءٗ فَأَخۡرَجۡنَا بِهِۦ ثَمَرَٰتٖ مُّخۡتَلِفًا أَلۡوَٰنُهَاۚ وَمِنَ ٱلۡجِبَالِ جُدَدُۢ بِيضٞ وَحُمۡرٞ مُّخۡتَلِفٌ أَلۡوَٰنُهَا وَغَرَابِيبُ سُودٞ ٢٧

២៨-ហើយមនុស្សលោកមួយចំនួន និងសត្វលូន និងសត្វពាហនៈក៏ពណ៌របស់វាខុសៗគ្នាដូច្នោះដែរ។ ពិតប្រាកដណាស់ អ្នកដែលកោតខ្លាចអល់ឡោះក្នុងចំណោមខ្ញុំរបស់ទ្រង់នោះ គឺបណ្ដាអ្នកដែលមានចំណេះដឹង។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងពូកែ មហាអភ័យទោស។

وَمِنَ ٱلنَّاسِ وَٱلدَّوَآبِّ وَٱلۡأَنۡعَٰمِ مُخۡتَلِفٌ أَلۡوَٰنُهُۥ كَذَٰلِكَۗ إِنَّمَا يَخۡشَى ٱللَّهَ مِنۡ عِبَادِهِ ٱلۡعُلَمَٰٓؤُاْۗ إِنَّ ٱللَّهَ عَزِيزٌ غَفُورٌ ٢٨

២៩-ពិតប្រាកដណាស់ បណ្ដាអ្នកដែលសូត្រគម្ពីររបស់អល់ឡោះ និងបានប្រតិបត្តិសឡាត និងបានបរិច្ចាគនូវអ្វីដែលយើងបានប្រទានឱ្យពួកគេដោយអាថ៌កំបាំង និងលាតត្រដាងនោះ ពួកគេសង្ឃឹមថា ជំនួញនេះនឹងមិនវិនាសឡើយ។

إِنَّ ٱلَّذِينَ يَتۡلُونَ كِتَٰبَ ٱللَّهِ وَأَقَامُواْ ٱلصَّلَوٰةَ وَأَنفَقُواْ مِمَّا رَزَقۡنَٰهُمۡ سِرّٗا وَعَلَانِيَةٗ يَرۡجُونَ تِجَٰرَةٗ لَّن تَبُورَ ٢٩

៣០-ដើម្បីទ្រង់នឹងបំពេញឱ្យពួកគេ នូវផលបុណ្យរបស់ពួកគេ និងបន្ថែមឱ្យពួកគេនូវការប្រោសប្រទានរបស់ទ្រង់។ ពិតប្រាកដណាស់ ទ្រង់មហាអភ័យទោស ដឹងគុណបំផុត។

لِيُوَفِّيَهُمۡ أُجُورَهُمۡ وَيَزِيدَهُم مِّن فَضۡلِهِۦٓۚ إِنَّهُۥ غَفُورٞ شَكُورٞ ٣٠

៣១-ហើយអ្វីដែលយើងបានផ្ដល់វ៉ាហ៊ីឱ្យអ្នកអំពីគម្ពីរ(គួរអាន) នោះវាជាការពិត ដើម្បីបញ្ជាក់នូវអ្វី(គម្ពីរ)ដែលមានពីមុនវា។ ពិតប្រាកដណាស់ អល់ឡោះមហាដឹងជ្រួតជ្រាប ឃើញបំផុតចំពោះ(ទង្វើ)ខ្ញុំរបស់ទ្រង់។

وَٱلَّذِيٓ أَوۡحَيۡنَآ إِلَيۡكَ مِنَ ٱلۡكِتَٰبِ هُوَ ٱلۡحَقُّ مُصَدِّقٗا لِّمَا بَيۡنَ يَدَيۡهِۗ إِنَّ ٱللَّهَ بِعِبَادِهِۦ لَخَبِيرُۢ بَصِيرٞ ٣١

៣២-បន្ទាប់មកយើងបានផ្ដល់គម្ពីរ(គួរអាន)ដល់បណ្ដាអ្នកដែលយើងបានជ្រើសរើសក្នុងចំណោមខ្ញុំរបស់យើង។ ហើយក្នុងចំណោមពួកគេមានអ្នកដែលបំពានលើខ្លួនឯង។ ហើយក្នុងចំណោមពួកគេមានអ្នកធុនកណ្ដាល ហើយក្នុងចំណោមពួកគេទៀតក៏មានអ្នកដែលនាំមុខគេក្នុងការធ្វើអំពើល្អតាមការអនុញ្ញាតរបស់អល់ឡោះដែរ។ នោះគឺជាការប្រោសប្រទានដ៏ធំធេង។

ثُمَّ أَوۡرَثۡنَا ٱلۡكِتَٰبَ ٱلَّذِينَ ٱصۡطَفَيۡنَا مِنۡ عِبَادِنَاۖ فَمِنۡهُمۡ ظَالِمٞ لِّنَفۡسِهِۦ وَمِنۡهُم مُّقۡتَصِدٞ وَمِنۡهُمۡ سَابِقُۢ بِٱلۡخَيۡرَٰتِ بِإِذۡنِ ٱللَّهِۚ ذَٰلِكَ هُوَ ٱلۡفَضۡلُ ٱلۡكَبِيرُ ٣٢

جَنَّٰتُ عَدۡنٖ يَدۡخُلُونَهَا يُحَلَّوۡنَ فِيهَا مِنۡ
أَسَاوِرَ مِن ذَهَبٖ وَلُؤۡلُؤٗاۖ وَلِبَاسُهُمۡ فِيهَا
حَرِيرٞ ٣٣

៣៣-គឺឋានសួគ៌អាត់ទិនដែលពួកគេនឹងចូលទៅក្នុងវាដោយពួកគេត្រូវគេតុបតែងនៅក្នុងនោះអំពីខ្សែដៃមាសនិងគជ់ ។ ហើយសំលៀកបំពាក់របស់ពួកគេនៅក្នុងនោះគឺអំពីក្រណាត់សូត្រ ។

وَقَالُواْ ٱلۡحَمۡدُ لِلَّهِ ٱلَّذِيٓ أَذۡهَبَ عَنَّا ٱلۡحَزَنَۖ
إِنَّ رَبَّنَا لَغَفُورٞ شَكُورٌ ٣٤

៣៤-ហើយពួកគេបាននិយាយថា: រាល់ការសរសើរគឺចំពោះអល់ឡោះ ដែលទ្រង់បានបំបាត់នូវភាពទុក្ខព្រួយចេញពីពួកយើង ។ ពិតប្រាកដណាស់ ម្ចាស់របស់ពួកយើងមហាអភ័យទោស ដឹងគុណបំផុត ។

ٱلَّذِيٓ أَحَلَّنَا دَارَ ٱلۡمُقَامَةِ مِن فَضۡلِهِۦ
لَا يَمَسُّنَا فِيهَا نَصَبٞ وَلَا يَمَسُّنَا فِيهَا
لُغُوبٞ ٣٥

៣៥-ដែលទ្រង់បានអនុញ្ញាតឱ្យពួកយើងស្នាក់នៅក្នុងកន្លែងអមតៈ(ឋានសួគ៌)តាមការប្រោសប្រទានរបស់ទ្រង់ ។ ការនឿយហត់មិនដែលបៀតបៀនពួកយើងនៅក្នុងវាឡើយ ហើយការលំបាកក៏មិនដែលបៀតបៀនពួកយើងនៅក្នុងវាដែរ ។

وَٱلَّذِينَ كَفَرُواْ لَهُمۡ نَارُ جَهَنَّمَ لَا يُقۡضَىٰ
عَلَيۡهِمۡ فَيَمُوتُواْ وَلَا يُخَفَّفُ عَنۡهُم مِّنۡ
عَذَابِهَاۚ كَذَٰلِكَ نَجۡزِي كُلَّ كَفُورٖ ٣٦

៣៦-រីឯពួកដែលប្រឆាំង សម្រាប់ពួកគេគឺនរកជើហាន់ណាំ ដោយពួកគេមិនត្រូវគេកំណត់ឱ្យស្លាប់ ជាហេតុធ្វើឱ្យពួកគេអាចសម្រាកបានឡើយ ។ តែពួកគេមិនត្រូវគេសម្រាលពីទារុណកម្មនៃនរកឡើយ ។ ដូច្នោះដែរ យើងតបស្នងចំពោះរាល់ៗពួកដែលប្រឆាំង ។

وَهُمۡ يَصۡطَرِخُونَ فِيهَا رَبَّنَآ أَخۡرِجۡنَا نَعۡمَلۡ
صَٰلِحًا غَيۡرَ ٱلَّذِي كُنَّا نَعۡمَلُۚ أَوَلَمۡ
نُعَمِّرۡكُم مَّا يَتَذَكَّرُ فِيهِ مَن تَذَكَّرَ وَجَآءَكُمُ
ٱلنَّذِيرُۖ فَذُوقُواْ فَمَا لِلظَّٰلِمِينَ مِن نَّصِيرٍ ٣٧

៣៧-ដោយពួកគេយំស្រែកនៅក្នុងវា(នរក)ថា: ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាបញ្ចេញពួកយើង ដើម្បីពួកយើងនឹងសាងអំពើល្អក្រៅពីអ្វីដែលពួកយើងធ្លាប់បានប្រព្រឹត្តកន្លងមកផង ។ (អល់ឡោះបានតបវិញថា) តើយើងមិនបានពន្យារអាយុរបស់ពួកអ្នកគ្រប់គ្រាន់ ដើម្បីធ្វើការពិចារណាក្នុងវា(រយៈពេលនៅរស់) ចំពោះអ្នកដែលចង់ពិចារណាទេឬ? ហើយអ្នកដាស់តឿនព្រមាន ក៏បានមកដល់ពួកអ្នកដែរ ។ ដូច្នេះ ចូរពួកអ្នកភ្លក្សរសជាតិ(ទារុណ-កម្ម)ចុះ ។ ហើយពួកដែលបំពានគ្មានអ្នកណាជួយឡើយ ។

إِنَّ ٱللَّهَ عَٰلِمُ غَيۡبِ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ
إِنَّهُۥ عَلِيمُۢ بِذَاتِ ٱلصُّدُورِ ٣٨

៣៨-ពិតប្រាកដណាស់ អល់ឡោះជាអ្នកដឹងពីអាថ៌កំបាំងនៃមេឃជាច្រើនជាន់ និងផែនដី ។ ហើយពិតប្រាកដណាស់ ទ្រង់មហាដឹងនូវអ្វីដែលមាននៅក្នុងចិត្ត ។

هُوَ ٱلَّذِى جَعَلَكُمْ خَلَـٰٓئِفَ فِى ٱلْأَرْضِ ۚ فَمَن كَفَرَ فَعَلَيْهِ كُفْرُهُۥ ۖ وَلَا يَزِيدُ ٱلْكَـٰفِرِينَ كُفْرُهُمْ عِندَ رَبِّهِمْ إِلَّا مَقْتًا ۖ وَلَا يَزِيدُ ٱلْكَـٰفِرِينَ كُفْرُهُمْ إِلَّا خَسَارًا ﴿٣٩﴾

៣៩-ទ្រង់ជាអ្នកដែលបានបង្កើតពួកអ្នកឱ្យស្នងតំណែងពីគ្នា(ពីមួយជំនាន់ទៅមួយជំនាន់)ក្នុងការគ្រប់គ្រងនៅលើផែនដី។ ដូច្នេះអ្នកណាហើយបានប្រឆាំង(នឹងអល់ឡោះ) ការប្រឆាំងរបស់គេគឺធ្លាក់ទៅលើខ្លួនគេ។ ហើយការប្រឆាំងរបស់ពួកគេមិនកើនអ្វីដល់ពួកដែលប្រឆាំងនឹងម្ចាស់របស់ពួកគេឡើយ លើកលែងតែការខឹងសម្បាប៉ុណ្ណោះ។ ហើយការប្រឆាំងរបស់ពួកគេ មិនកើនអ្វីដល់ពួកដែលប្រឆាំងក្រៅពីការខាតបង់នោះឡើយ។

قُلْ أَرَءَيْتُمْ شُرَكَآءَكُمُ ٱلَّذِينَ تَدْعُونَ مِن دُونِ ٱللَّهِ أَرُونِى مَاذَا خَلَقُوا۟ مِنَ ٱلْأَرْضِ أَمْ لَهُمْ شِرْكٌ فِى ٱلسَّمَـٰوَٰتِ أَمْ ءَاتَيْنَـٰهُمْ كِتَـٰبًا فَهُمْ عَلَىٰ بَيِّنَتٍ مِّنْهُ ۚ بَلْ إِن يَعِدُ ٱلظَّـٰلِمُونَ بَعْضُهُم بَعْضًا إِلَّا غُرُورًا ﴿٤٠﴾

៤០-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចូរពួកអ្នកប្រាប់ខ្ញុំអំពីព្រះនានារបស់ពួកអ្នក ដែលពួកអ្នកបួងសួងសុំផ្សេងពីអល់ឡោះមក។ ចូរពួកអ្នកបង្ហាញខ្ញុំមក តើផ្នែកមួយណានៃផែនដីដែលពួកវាបានបង្កើតនោះ? ឬមួយក៏ពួកវាមានការចូលរួម(ជាមួយអល់ឡោះ) ក្នុងការបង្កើតមេឃជាច្រើនជាន់? ឬមួយយើងបានផ្ដល់ឱ្យពួកគេ(ពួកមូស្ហរីគីន)នូវគម្ពីរ ហើយពួកគេស្ថិតនៅលើភស្តុតាងច្បាស់លាស់អំពីវា(អំពីការគោរពព្រះនានា)? ផ្ទុយទៅវិញ ពួកដែលបំពានសន្យាគ្នាទៅវិញទៅមកគ្មានអ្វីក្រៅពីការបោកប្រាស់នោះឡើយ។

۞ إِنَّ ٱللَّهَ يُمْسِكُ ٱلسَّمَـٰوَٰتِ وَٱلْأَرْضَ أَن تَزُولَا ۚ وَلَئِن زَالَتَآ إِنْ أَمْسَكَهُمَا مِنْ أَحَدٍ مِّنۢ بَعْدِهِۦٓ ۚ إِنَّهُۥ كَانَ حَلِيمًا غَفُورًا ﴿٤١﴾

៤១-ពិតប្រាកដណាស់ អល់ឡោះទប់មេឃជាច្រើនជាន់ និងផែនដីមិនឱ្យវារង្គើ។ ហើយប្រសិនបើវាទាំងពីររង្គើ គ្មានអ្នកណាម្នាក់អាចទប់វាទាំងពីរក្រៅពីទ្រង់បានឡើយ។ ពិតប្រាកដណាស់ ទ្រង់មហាអត់ធ្មត់ មហាអភ័យទោស។

وَأَقْسَمُوا۟ بِٱللَّهِ جَهْدَ أَيْمَـٰنِهِمْ لَئِن جَآءَهُمْ نَذِيرٌ لَّيَكُونُنَّ أَهْدَىٰ مِنْ إِحْدَى ٱلْأُمَمِ ۖ فَلَمَّا جَآءَهُمْ نَذِيرٌ مَّا زَادَهُمْ إِلَّا نُفُورًا ﴿٤٢﴾

៤២-ហើយពួកគេ(ពួកពុតត្បុត)បានស្បថនឹងអល់ឡោះ ដោយសម្បថយ៉ាងម៉ឺងម៉ាត់របស់ពួកគេថាៈ ជាការពិតណាស់ ប្រសិនបើអ្នកដាស់តឿនព្រមានបានមកដល់ពួកគេនោះ ពួកគេពិតជានឹងក្លាយជាប្រជាជាតិមួយដែលទទួលបានការចង្អុលបង្ហាញជាងគេក្នុងចំណោមប្រជាជាតិទាំងឡាយជាមិនខាន។ តែនៅពេលដែលអ្នកដាស់តឿនព្រមានបានមកដល់ពួកគេ គ្មានអ្វីបន្ថែមដល់ពួកគេក្រៅពីការគេចវេះឡើយ។

ٱسْتِكْبَارًا فِى ٱلْأَرْضِ وَمَكْرَ ٱلسَّيِّئِ ۚ وَلَا يَحِيقُ

៤៣-ដោយសារការអំនួតក្អេងក្អាងនៅលើផែនដី និងល្បិចកល

ដ៏អាក្រក់(របស់ពួកគេ)។ ហើយល្បិចកលដ៏អាក្រក់នោះ វានឹងមិនធ្លាក់ទៅលើអ្នកដទៃឡើយ លើកលែងតែអ្នកដែលប្រព្រឹត្តវាប៉ុណ្ណោះ។ ហើយពួកគេមិនរង់ចាំអ្វីក្រៅពីមាគ៌ារបស់អ្នកជំនាន់មុនឡើយ(ត្រូវទារុណកម្មដូចអ្នកជំនាន់មុនដែរ)។ ហើយអ្នក(មូហាំម៉ាត់)នឹងមិនជួបប្រទះនូវការផ្លាស់ប្តូរចំពោះមាគ៌ារបស់អល់ឡោះជាដាច់ខាត ហើយអ្នកក៏នឹងមិនជួបប្រទះនូវការប្រែប្រួលចំពោះមាគ៌ារបស់អល់ឡោះដែរ។

ٱلْمَكْرُ ٱلسَّيِّئُ إِلَّا بِأَهْلِهِۦ ۚ فَهَلْ يَنظُرُونَ
إِلَّا سُنَّتَ ٱلْأَوَّلِينَ ۚ فَلَن تَجِدَ لِسُنَّتِ ٱللَّهِ
تَبْدِيلًا ۖ وَلَن تَجِدَ لِسُنَّتِ ٱللَّهِ تَحْوِيلًا ﴿٤٣﴾

៤៤-តើពួកគេ(ពួកមូស្ហរីគីនម៉ាក្កះ)មិនបានធ្វើដំណើរនៅលើផែនដី និងពិនិត្យមើលទេឬថា តើលទ្ធផលចុងក្រោយរបស់ពួក(ក្រុមអាដនិងសាមូដ)ដែលពីមុនពួកគេនោះយ៉ាងដូចម្តេចដែរ? ពួកគេ(ក្រុមអាដនិងសាមូដ)គឺជាអ្នកដែលខ្លាំងជាងពួកគេ(ពួកមូស្ហរីគីនម៉ាក្កះ)ទៅទៀត។ ហើយអល់ឡោះគ្មានអ្វីមួយនៅលើមេឃជាច្រើនជាន់ និងនៅលើផែនដីធ្វើឱ្យទ្រង់ទន់ខ្សោយបានឡើយ។ ពិតប្រាកដណាស់ ទ្រង់មហាដឹង មហាមានអានុភាព។

أَوَلَمْ يَسِيرُوا۟ فِى ٱلْأَرْضِ فَيَنظُرُوا۟ كَيْفَ كَانَ
عَـٰقِبَةُ ٱلَّذِينَ مِن قَبْلِهِمْ وَكَانُوٓا۟ أَشَدَّ مِنْهُمْ
قُوَّةً ۚ وَمَا كَانَ ٱللَّهُ لِيُعْجِزَهُۥ مِن شَىْءٍ فِى
ٱلسَّمَـٰوَٰتِ وَلَا فِى ٱلْأَرْضِ ۚ إِنَّهُۥ كَانَ
عَلِيمًا قَدِيرًا ﴿٤٤﴾

៤៥-ហើយប្រសិនបើអល់ឡោះដាក់ទណ្ឌកម្មមនុស្សលោកនូវអ្វីដែលពួកគេបានប្រព្រឹត្តនោះ ទ្រង់នឹងមិនបានបន្សល់ទុកសត្វលោកនៅលើផែនដីនេះឡើយ។ ប៉ុន្តែទ្រង់ពន្យារពេលឱ្យពួកគេរហូតដល់ពេលកំណត់។ ហើយនៅពេលដែលពេលកំណត់របស់ពួកគេបានមកដល់ ពេលនោះពិតប្រាកដណាស់ អល់ឡោះមហាឃើញចំពោះ(ទង្វើ)ខ្ញុំរបស់ទ្រង់។

وَلَوْ يُؤَاخِذُ ٱللَّهُ ٱلنَّاسَ بِمَا كَسَبُوا۟ مَا
تَرَكَ عَلَىٰ ظَهْرِهَا مِن دَآبَّةٍ وَلَـٰكِن
يُؤَخِّرُهُمْ إِلَىٰٓ أَجَلٍ مُّسَمًّى ۖ فَإِذَا جَآءَ أَجَلُهُمْ
فَإِنَّ ٱللَّهَ كَانَ بِعِبَادِهِۦ بَصِيرًۢا ﴿٤٥﴾

## ជំពូក យ៉ាស៊ីន

## سورة يس

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

១-យ៉ា ស៊ីន

يسٓ ﴿١﴾

២-(អល់ឡោះ)ស្បថនឹងគម្ពីរគួរអានដែលពោរពេញទៅដោយគតិបណ្ឌិត។

وَٱلْقُرْءَانِ ٱلْحَكِيمِ ﴿٢﴾

៣-ពិតប្រាកដណាស់ អ្នក(មូហាំម៉ាត់)គឺជាអ្នកនាំសារម្នាក់ក្នុងចំណោមអ្នកនាំសារទាំងឡាយ

إِنَّكَ لَمِنَ ٱلْمُرْسَلِينَ ﴿٣﴾

٤ عَلَىٰ صِرَٰطٖ مُّسۡتَقِيمٖ

៤-ដែលស្ថិតនៅលើមាគ៌ាដ៏ត្រឹមត្រូវ ។

٥ تَنزِيلَ ٱلۡعَزِيزِ ٱلرَّحِيمِ

៥-(គម្ពីរគួរអាននេះ)ជាការបញ្ចុះមកពីម្ចាស់មហាខ្លាំងពូកែ មហាអាណិតស្រឡាញ់ ។

٦ لِتُنذِرَ قَوۡمٗا مَّآ أُنذِرَ ءَابَآؤُهُمۡ فَهُمۡ غَٰفِلُونَ

៦-ដើម្បីឱ្យអ្នក(មូហាំម៉ាត់)ដាស់តឿនព្រមានដល់ក្រុមដែលជីដូនជីតារបស់ពួកគេមិនធ្លាប់ទទួលការដាស់តឿនព្រមាន(អំពីអ្នកណាម្នាក់ឡើយ) ។ដូច្នេះពួកគេជាពួកដែលធ្វេសប្រហែស ។

٧ لَقَدۡ حَقَّ ٱلۡقَوۡلُ عَلَىٰٓ أَكۡثَرِهِمۡ فَهُمۡ لَا يُؤۡمِنُونَ

៧-ជាការពិតណាស់ ទារុណកម្មបានកំណត់ធ្លាក់ទៅលើពួកគេភាគច្រើន(ពួកមូស្ហរីគីនម៉ាក្កះ) ដោយសារតែពួកគេគ្មានជំនឿ ។

٨ إِنَّا جَعَلۡنَا فِيٓ أَعۡنَٰقِهِمۡ أَغۡلَٰلٗا فَهِيَ إِلَى ٱلۡأَذۡقَانِ فَهُم مُّقۡمَحُونَ

៨-ពិតប្រាកដណាស់ យើងបានដាក់ច្រវាក់ករបស់ពួកគេ ហើយវាបានរុំរហូតដល់ចង្កាធ្វើឱ្យពួកគេងើយក្បាលឡើងលើ(មិនអាចងាកបានឡើយ) ។

٩ وَجَعَلۡنَا مِنۢ بَيۡنِ أَيۡدِيهِمۡ سَدّٗا وَمِنۡ خَلۡفِهِمۡ سَدّٗا فَأَغۡشَيۡنَٰهُمۡ فَهُمۡ لَا يُبۡصِرُونَ

៩-ហើយយើងបានដាក់រនាំងមួយបាំងពីមុខពួកគេនិងរនាំងមួយទៀតបាំងពីក្រោយពួកគេ ។ បន្ទាប់មកយើងបានបំបាំងពួកគេ ដោយពួកគេមិនអាចមើលឃើញឡើយ ។

١٠ وَسَوَآءٌ عَلَيۡهِمۡ ءَأَنذَرۡتَهُمۡ أَمۡ لَمۡ تُنذِرۡهُمۡ لَا يُؤۡمِنُونَ

១០-ហើយវាស្មើគ្នាទេចំពោះពួកគេ ទោះបីជាអ្នក(មូហាំម៉ាត់) បានដាស់តឿនព្រមានពួកគេ ឬមិនបានដាស់តឿន ព្រមានពួកគេក៏ដោយ ក៏ពួកគេមិនជឿដែរ ។

١١ إِنَّمَا تُنذِرُ مَنِ ٱتَّبَعَ ٱلذِّكۡرَ وَخَشِيَ ٱلرَّحۡمَٰنَ بِٱلۡغَيۡبِۖ فَبَشِّرۡهُ بِمَغۡفِرَةٖ وَأَجۡرٖ كَرِيمٍ

១១-ពិតប្រាកដណាស់ អ្នក(មូហាំម៉ាត់) គ្រាន់តែជាអ្នកដាស់តឿនព្រមានចំពោះអ្នកដែលបានដើរតាមគម្ពីរគួរអាន និងបានខ្លាចម្ចាស់មហាសប្បុរសទាំងអាថ៌កំបាំងប៉ុណ្ណោះ ។ ដូច្នេះ ចូរអ្នកផ្ដល់ដំណឹងរីករាយពីការអភ័យទោស និងផលបុណ្យដ៏ឧត្ដុង្គឧត្ដមដល់គេចុះ ។

١٢ إِنَّا نَحۡنُ نُحۡيِ ٱلۡمَوۡتَىٰ وَنَكۡتُبُ مَا قَدَّمُواْ وَءَاثَٰرَهُمۡۚ وَكُلَّ شَيۡءٍ أَحۡصَيۡنَٰهُ فِيٓ إِمَامٖ مُّبِينٖ

១២-ពិតប្រាកដណាស់ យើងជាអ្នកធ្វើឱ្យមនុស្សស្លាប់រស់ឡើងវិញ ហើយយើងកត់ត្រានូវអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមក និងកេរដំណែលរបស់ពួកគេ ។ ហើយរាល់អ្វីៗទាំងអស់ គឺយើងបានកត់ត្រាវាទុកនៅក្នុងបញ្ជីមួយដ៏ច្បាស់លាស់(ឡាវហុលម៉ះហ្វ៊ូស) ។

وَٱضۡرِبۡ لَهُم مَّثَلًا أَصۡحَٰبَ ٱلۡقَرۡيَةِ إِذۡ جَآءَهَا ٱلۡمُرۡسَلُونَ ﴿١٣﴾

១៣-ចូរអ្នក(មូហាំម៉ាត់)លើកឧទាហរណ៍ប្រាប់ពួកគេអំពីរឿងរបស់អ្នកភូមិស្រុកមួយនៅពេលដែលបណ្ដាអ្នកនាំសារបានទៅដល់ពួកគេ។

إِذۡ أَرۡسَلۡنَآ إِلَيۡهِمُ ٱثۡنَيۡنِ فَكَذَّبُوهُمَا فَعَزَّزۡنَا بِثَالِثٖ فَقَالُوٓاْ إِنَّآ إِلَيۡكُم مُّرۡسَلُونَ ﴿١٤﴾

១៤-នៅពេលដែលយើងបានបញ្ជូនអ្នកនាំសារពីរនាក់ទៅកាន់ពួកគេ(អ្នកភូមិស្រុក) ពេលនោះពួកគេបានបដិសេធនឹងគេទាំងពីរ។ បន្ទាប់មក យើងបានពង្រឹង(គេទាំងពីរ)នឹងអ្នកនាំសារទីបីទៀត។ ហើយពួកគេបានពោលថាៈ ពិតប្រាកដណាស់ ពួកយើងគឺជាអ្នកនាំសារដែលត្រូវគេបញ្ជូនមកកាន់ពួកអ្នក។

قَالُواْ مَآ أَنتُمۡ إِلَّا بَشَرٞ مِّثۡلُنَا وَمَآ أَنزَلَ ٱلرَّحۡمَٰنُ مِن شَيۡءٍ إِنۡ أَنتُمۡ إِلَّا تَكۡذِبُونَ ﴿١٥﴾

១៥-ពួកគេ(អ្នកភូមិស្រុក)បាននិយាយថាៈ ពួកអ្នកគ្រាន់តែជាមនុស្សធម្មតាដូចពួកយើងប៉ុណ្ណោះ ហើយម្ចាស់ដ៏មហាសប្បុរសក៏មិនបានបញ្ចុះអ្វីដែរ។ តាមពិតពួកអ្នកគឺជាពួកភូតកុហក។

قَالُواْ رَبُّنَا يَعۡلَمُ إِنَّآ إِلَيۡكُمۡ لَمُرۡسَلُونَ ﴿١٦﴾

១៦-ពួកគាត់បានតបវិញថាៈ ម្ចាស់របស់ពួកយើងដឹងថា ពិតប្រាកដណាស់ពួកយើង គឺជាអ្នកនាំសារដែលត្រូវគេបញ្ជូនមកកាន់ពួកអ្នក។

وَمَا عَلَيۡنَآ إِلَّا ٱلۡبَلَٰغُ ٱلۡمُبِينُ ﴿١٧﴾

១៧-ហើយកាតព្វកិច្ចរបស់ពួកយើងគឺគ្មានអ្វីក្រៅពីការផ្សព្វផ្សាយសារយ៉ាងច្បាស់លាស់នោះឡើយ។

قَالُوٓاْ إِنَّا تَطَيَّرۡنَا بِكُمۡۖ لَئِن لَّمۡ تَنتَهُواْ لَنَرۡجُمَنَّكُمۡ وَلَيَمَسَّنَّكُم مِّنَّا عَذَابٌ أَلِيمٞ ﴿١٨﴾

១៨-ពួកគេបាននិយាយថាៈ ពិតប្រាកដណាស់ ពួកយើងមានប្រផ្នូលអាក្រក់ដោយសារតែពួកអ្នក។ ប្រសិនបើពួកអ្នកពិតជាមិនព្រមបញ្ឈប់(ការផ្សព្វផ្សាយសារ)ទេនោះ យើងប្រាកដជានឹងគប់ពួកអ្នកនឹងដុំថ្ម ហើយពួកអ្នកនឹងទទួលរងទារុណកម្មដ៏ឈឺចាប់ពីពួកយើងជាមិនខាន។

قَالُواْ طَٰٓئِرُكُم مَّعَكُمۡۚ أَئِن ذُكِّرۡتُمۚ بَلۡ أَنتُمۡ قَوۡمٞ مُّسۡرِفُونَ ﴿١٩﴾

១៩-ពួកគាត់បានតបវិញថាៈ ប្រផ្នូលអាក្រក់របស់ពួកអ្នកគឺនៅជាមួយនឹងពួកអ្នក។ តើ(វាជាប្រផ្នូលអាក្រក់ឬ) ប្រសិនបើពួកអ្នកត្រូវបានគេក្រើនរំលឹកនោះ? ផ្ទុយទៅវិញ ពួកអ្នកគឺជាក្រុមដែលបំពាន។

وَجَآءَ مِنۡ أَقۡصَا ٱلۡمَدِينَةِ رَجُلٞ يَسۡعَىٰ قَالَ يَٰقَوۡمِ ٱتَّبِعُواْ ٱلۡمُرۡسَلِينَ ﴿٢٠﴾

២០-ហើយមានបុរសម្នាក់មកពីជាយក្រុងបានមកដល់ទាំងប្រញាប់ប្រញាល់ដោយគេបាននិយាយថាៈ ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកអនុវត្តតាមអ្នកនាំសារទាំងនោះចុះ។

២១-ចូរពួកអ្នកអនុវត្តតាមអ្នកដែលមិនទាមទារកម្រៃពីពួកអ្នកចុះ ពីព្រោះពួកគេជាអ្នកទទួលបានការចង្អុលបង្ហាញ(ពីអល់ឡោះ)។

ٱتَّبِعُواْ مَن لَّا يَسۡـَٔلُكُمۡ أَجۡرٗا وَهُم مُّهۡتَدُونَ ﴿٢١﴾

២២-តើហេតុអ្វីបានជាខ្ញុំមិនគោរពសក្ការៈចំពោះអ្នកដែលបានបង្កើតខ្ញុំ ខណៈដែលពួកអ្នកនឹងត្រូវវិលត្រឡប់ទៅចំពោះទ្រង់នោះ?

وَمَا لِيَ لَآ أَعۡبُدُ ٱلَّذِي فَطَرَنِي وَإِلَيۡهِ تُرۡجَعُونَ ﴿٢٢﴾

២៣-តើឱ្យខ្ញុំយកម្ចាស់ផ្សេងៗមកគោរពសក្ការៈក្រៅពីទ្រង់ឬ? ប្រសិនបើម្ចាស់មហាសប្បុរសមានបំណងឱ្យខ្ញុំមានគ្រោះថ្នាក់ គឺការអន្តរាគមន៍របស់ពួកវាមិនអាចការពារអ្វីដល់ខ្ញុំ និងមិនអាចសង្គ្រោះខ្ញុំបានឡើយ។

ءَأَتَّخِذُ مِن دُونِهِۦٓ ءَالِهَةً إِن يُرِدۡنِ ٱلرَّحۡمَٰنُ بِضُرّٖ لَّا تُغۡنِ عَنِّي شَفَٰعَتُهُمۡ شَيۡـٔٗا وَلَا يُنقِذُونِ ﴿٢٣﴾

២៤-ពិតប្រាកដណាស់ បើដូច្នោះមែន ខ្ញុំពិតជាស្ថិតក្នុងភាពវង្វេងដ៏ច្បាស់លាស់។

إِنِّيٓ إِذٗا لَّفِي ضَلَٰلٖ مُّبِينٍ ﴿٢٤﴾

២៥-ពិតប្រាកដណាស់ ខ្ញុំមានជំនឿលើម្ចាស់របស់ពួកអ្នក។ ដូច្នេះ ចូរពួកអ្នកស្តាប់ខ្ញុំ។

إِنِّيٓ ءَامَنتُ بِرَبِّكُمۡ فَٱسۡمَعُونِ ﴿٢٥﴾

២៦-(បន្ទាប់ពីបុរសនោះត្រូវបានសម្លាប់)មានគេ(ម៉ាឡាអ៊ីកាត់)ពោលថាៈ ចូរអ្នកចូលឋានសួគ៌ចុះ។ គេបានតបវិញថាៈ ខ្ញុំចង់តែឱ្យក្រុមរបស់ខ្ញុំដឹង

قِيلَ ٱدۡخُلِ ٱلۡجَنَّةَۖ قَالَ يَٰلَيۡتَ قَوۡمِي يَعۡلَمُونَ ﴿٢٦﴾

២៧-នូវអ្វីដែលម្ចាស់របស់ខ្ញុំបានអភ័យទោសឱ្យខ្ញុំនិងបានធ្វើឱ្យខ្ញុំស្ថិតក្នុងចំណោមអ្នកដែលទទួលបានកិត្តិយសខ្ពង់ខ្ពស់!

بِمَا غَفَرَ لِي رَبِّي وَجَعَلَنِي مِنَ ٱلۡمُكۡرَمِينَ ﴿٢٧﴾

២៨-ហើយយើងមិនបានបញ្ជូនកងទ័ពពីលើមេឃទៅលើក្រុមរបស់គេបន្ទាប់ពីគេឡើយ ហើយយើងក៏មិនមែនជាអ្នកដែលបញ្ជូនដែរ។

۞وَمَآ أَنزَلۡنَا عَلَىٰ قَوۡمِهِۦ مِنۢ بَعۡدِهِۦ مِن جُندٖ مِّنَ ٱلسَّمَآءِ وَمَا كُنَّا مُنزِلِينَ ﴿٢٨﴾

២៩-ការវិនាសរបស់ពួកគេ គ្មានអ្វីក្រៅពីសម្រែកមួយយ៉ាងខ្លាំងនោះទេ ហើយពេលនោះពួកគេក៏ស្លាប់គ្មានសល់ឡើយ។

إِن كَانَتۡ إِلَّا صَيۡحَةٗ وَٰحِدَةٗ فَإِذَا هُمۡ خَٰمِدُونَ ﴿٢٩﴾

៣០-គួរឱ្យស្តាយបំផុតចំពោះមនុស្សលោក! គ្មានអ្នកនាំសារណាម្នាក់មកដល់ពួកគេក្រៅពីពួកគេបានចំអកឡកឡឺយនឹងគេឡើយ។

يَٰحَسۡرَةً عَلَى ٱلۡعِبَادِۚ مَا يَأۡتِيهِم مِّن رَّسُولٍ إِلَّا كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ﴿٣٠﴾

៣១-តើពួកគេ(អារ៉ាប់ម៉ាក្កះ) មិនដឹងទេឬ ប៉ុន្មានជំនាន់មក ហើយដែលយើងបានបំផ្លាញមុនពួកគេ? ពិតប្រាកដណាស់ ពួកគេ (អ្នកជំនាន់មុន) មិនអាចវិលត្រឡប់ទៅរកពួកគេបានឡើយ ។

أَلَمْ يَرَوْا۟ كَمْ أَهْلَكْنَا قَبْلَهُم مِّنَ ٱلْقُرُونِ أَنَّهُمْ إِلَيْهِمْ لَا يَرْجِعُونَ ٣١

៣២-ហើយរាល់ពួកគេ នឹងត្រូវគេប្រមូលមកកាន់យើងទាំងអស់គ្នា ។

وَإِن كُلٌّ لَّمَّا جَمِيعٌ لَّدَيْنَا مُحْضَرُونَ ٣٢

៣៣-ហើយដីស្លាប់(គ្មានជីជាតិ) ដែលយើងបានធ្វើឱ្យវារស់ឡើងវិញ(មានជីជាតិ) និងបានបញ្ចេញគ្រាប់ធញ្ញជាតិពីវា ព្រមទាំងពួកគេអាចទទួលទានពីវាបាននោះគឺជាភស្តុតាងសម្រាប់ពួកគេ ។

وَءَايَةٌ لَّهُمُ ٱلْأَرْضُ ٱلْمَيْتَةُ أَحْيَيْنَٰهَا وَأَخْرَجْنَا مِنْهَا حَبًّا فَمِنْهُ يَأْكُلُونَ ٣٣

៣៤-ហើយយើងបានបង្កើតនៅលើផែនដីឱ្យមានចំការល្មើ និងទំពាំងបាយជូរ ហើយយើងបានធ្វើឱ្យប្រភពទឹកជាច្រើនផុសចេញពីក្នុងវា ។

وَجَعَلْنَا فِيهَا جَنَّٰتٍ مِّن نَّخِيلٍ وَأَعْنَٰبٍ وَفَجَّرْنَا فِيهَا مِنَ ٱلْعُيُونِ ٣٤

៣៥-ដើម្បីពួកគេនឹងទទួលទាននូវភោគផលរបស់វា និងអ្វីដែលដៃរបស់ពួកគេបានធ្វើវា ។ ដូច្នេះ តើពួកគេមិនដឹងគុណទេឬ?

لِيَأْكُلُوا۟ مِن ثَمَرِهِۦ وَمَا عَمِلَتْهُ أَيْدِيهِمْ ۖ أَفَلَا يَشْكُرُونَ ٣٥

៣៦-ទ្រង់មហាស្អាតស្អំដែលបានបង្កើតអ្វីៗទាំងអស់ជាគូៗ អំពីអ្វីដែលដុះចេញពីដី និងអំពីខ្លួនរបស់ពួកគេផ្ទាល់ ហើយនិងអំពីអ្វីដែលពួកគេមិនដឹង ។

سُبْحَٰنَ ٱلَّذِى خَلَقَ ٱلْأَزْوَٰجَ كُلَّهَا مِمَّا تُنۢبِتُ ٱلْأَرْضُ وَمِنْ أَنفُسِهِمْ وَمِمَّا لَا يَعْلَمُونَ ٣٦

៣៧-ហើយពេលយប់ ដែលយើងបានដកយកពេលថ្ងៃចេញពីវា គឺជាភស្តុតាងសម្រាប់ពួកគេ ។ ហើយពួកគេស្រាប់តែស្ថិតនៅក្នុងភាពងងឹតសូន្យសុង ។

وَءَايَةٌ لَّهُمُ ٱلَّيْلُ نَسْلَخُ مِنْهُ ٱلنَّهَارَ فَإِذَا هُم مُّظْلِمُونَ ٣٧

៣៨-ហើយព្រះអាទិត្យធ្វើដំណើរទៅតាមគន្លងរបស់វា ។ នោះគឺជាការកំណត់របស់ម្ចាស់ដែលមហាខ្លាំងពូកែ មហាដឹង ។

وَٱلشَّمْسُ تَجْرِى لِمُسْتَقَرٍّ لَّهَا ۚ ذَٰلِكَ تَقْدِيرُ ٱلْعَزِيزِ ٱلْعَلِيمِ ٣٨

៣៩-រីឯព្រះច័ន្ទ យើងបានកំណត់វាជាកំរិតៗ រហូតទាល់តែវាត្រឡប់មកភាពដើមវិញ ប្រៀបដូចជាចង្កោមផ្លែល្មើដែលស្ងួត ។

وَٱلْقَمَرَ قَدَّرْنَٰهُ مَنَازِلَ حَتَّىٰ عَادَ كَٱلْعُرْجُونِ ٱلْقَدِيمِ ٣٩

៤០-ព្រះអាទិត្យមិនអាចធ្វើដំណើរទៅទាន់ព្រះច័ន្ទបានឡើយ ។ រីឯពេលយប់ក៏មិនអាចមកដល់មុនពេលថ្ងៃបានដែរ ។ ហើយអ្វីៗ

لَا ٱلشَّمْسُ يَنۢبَغِى لَهَآ أَن تُدْرِكَ ٱلْقَمَرَ

وَلَا ٱلَّيۡلُ سَابِقُ ٱلنَّهَارِۚ وَكُلّٞ فِي فَلَكٖ
يَسۡبَحُونَ ٤٠

ទាំងអស់ត្រូវធ្វើដំណើរតាមគន្លងរបស់វារៀង១ខ្លួន។

وَءَايَةٞ لَّهُمۡ أَنَّا حَمَلۡنَا ذُرِّيَّتَهُمۡ فِي ٱلۡفُلۡكِ
ٱلۡمَشۡحُونِ ٤١

៤១-ហើយពិតប្រាកណាស់ យើងបានដឹកជញ្ជូនកូនចៅរបស់ពួកគេនៅក្នុងសំពៅដែលពេញដោយបន្ទុកនោះគឺជាភស្តុតាងសម្រាប់ពួកគេ។

وَخَلَقۡنَا لَهُم مِّن مِّثۡلِهِۦ مَا يَرۡكَبُونَ ٤٢

៤២-ហើយយើងបានបង្កើតសម្រាប់ពួកគេនូវអ្វីដែលពួកគេអាចជិះដូចគ្នានឹងវា(សំពៅ)ដែរ។

وَإِن نَّشَأۡ نُغۡرِقۡهُمۡ فَلَا صَرِيخَ لَهُمۡ وَلَا هُمۡ
يُنقَذُونَ ٤٣

៤៣-ហើយប្រសិនបើយើងមានចេតនា យើងនឹងពន្លិចពួកគេ។ ដូច្នេះ ពួកគេគ្មានអ្នកជួយឡើយ ហើយពួកគេក៏មិនត្រូវគេជួយសង្គ្រោះដែរ។

إِلَّا رَحۡمَةٗ مِّنَّا وَمَتَٰعًا إِلَىٰ حِينٖ ٤٤

៤៤-លុះត្រាតែមានក្ដីមេត្តាករុណា និងមានសេចក្ដីសុខពីយើងរហូតដល់ពេលកំណត់។

وَإِذَا قِيلَ لَهُمُ ٱتَّقُواْ مَا بَيۡنَ أَيۡدِيكُمۡ وَمَا
خَلۡفَكُمۡ لَعَلَّكُمۡ تُرۡحَمُونَ ٤٥

៤៥-ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកគេថាៈ ចូរពួកអ្នកកោតខ្លាចអល់ឡោះនូវអ្វីដែលមាននៅពីមុខពួកគេ(ថ្ងៃបរលោក)និងអ្វីដែលមាននៅខាងក្រោយពួកគេ(លោកិយ)ចុះ សង្ឃឹមថាពួកអ្នកនឹងទទួលបានការអាណិតស្រឡាញ់។

وَمَا تَأۡتِيهِم مِّنۡ ءَايَةٖ مِّنۡ ءَايَٰتِ رَبِّهِمۡ إِلَّا كَانُواْ
عَنۡهَا مُعۡرِضِينَ ٤٦

៤៦-ហើយគ្មានភស្តុតាងណាមួយក្នុងចំណោមភស្តុតាងទាំងឡាយនៃម្ចាស់របស់ពួកគេ(ពួកមូស្ហរីគីន)មកដល់ពួកគេ ក្រៅពីពួកគេជាអ្នកបែរចេញពីវាឡើយ។

وَإِذَا قِيلَ لَهُمۡ أَنفِقُواْ مِمَّا رَزَقَكُمُ ٱللَّهُ قَالَ
ٱلَّذِينَ كَفَرُواْ لِلَّذِينَ ءَامَنُوٓاْ أَنُطۡعِمُ مَن لَّوۡ
يَشَآءُ ٱللَّهُ أَطۡعَمَهُۥٓ إِنۡ أَنتُمۡ إِلَّا فِي ضَلَٰلٖ
مُّبِينٖ ٤٧

៤៧-ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកគេថាៈ ចូរពួកអ្នកបរិច្ចាគនូវអ្វីដែលអល់ឡោះបានផ្ដល់លាភសក្ការៈដល់ពួកអ្នក។ ពួកដែលប្រឆាំងបាននិយាយទៅកាន់បណ្ដាអ្នកដែលមានជំនឿថាៈ តើឱ្យយើងផ្ដល់ចំណីអាហារឱ្យអ្នកណា? ប្រសិនបើអល់ឡោះមានចេតនាទ្រង់នឹងផ្ដល់ចំណីអាហារដល់អ្នកនោះជាមិនខាន។ ពួកអ្នកគ្មានអ្វីក្រៅពីស្ថិតក្នុងភាពវង្វេងយ៉ាងច្បាស់លាស់នោះឡើយ។

وَيَقُولُونَ مَتَىٰ هَٰذَا ٱلْوَعْدُ إِن كُنتُمْ
صَٰدِقِينَ ﴿٤٨﴾

៤៨-ហើយពួកគេ(ពួកប្រឆាំង)និយាយថាៈ តើថ្ងៃសន្យានេះ (ថ្ងៃបរលោក)នៅពេលណា ប្រសិនបើពួកអ្នកជាអ្នកនិយាយពិត មែននោះ?

مَا يَنظُرُونَ إِلَّا صَيْحَةً وَٰحِدَةً تَأْخُذُهُمْ
وَهُمْ يَخِصِّمُونَ ﴿٤٩﴾

៤៩-ពួកគេមិនរង់ចាំអ្វីក្រៅពីសម្រែកមួយដ៏ខ្លាំងនឹងឆក់យក ជីវិតពួកគេ ខណៈដែលពួកគេឈ្លោះប្រកែកគ្នានោះឡើយ ។

فَلَا يَسْتَطِيعُونَ تَوْصِيَةً وَلَآ إِلَىٰٓ أَهْلِهِمْ
يَرْجِعُونَ ﴿٥٠﴾

៥០-ពេលនោះពួកគេមិនអាចផ្តាំផ្ញើ(អ្នកណាម្នាក់)បានឡើយ ហើយពួកគេក៏មិនអាចវិលត្រឡប់ទៅជួបក្រុមគ្រួសាររបស់ពួកគេ បានដែរ ។

وَنُفِخَ فِى ٱلصُّورِ فَإِذَا هُم مِّنَ ٱلْأَجْدَاثِ إِلَىٰ
رَبِّهِمْ يَنسِلُونَ ﴿٥١﴾

៥១-ហើយគេបានផ្លុំត្រែ ពេលនោះពួកគេស្រាប់តែផុសចេញ ពីផ្នូរឆ្ពោះទៅកាន់ម្ចាស់របស់ពួកគេយ៉ាងប្រញាប់ប្រញាល់ ។

قَالُوا۟ يَٰوَيْلَنَا مَنۢ بَعَثَنَا مِن مَّرْقَدِنَا ۜ هَٰذَا مَا
وَعَدَ ٱلرَّحْمَٰنُ وَصَدَقَ ٱلْمُرْسَلُونَ ﴿٥٢﴾

៥២-ពួកគេបាននិយាយគ្នាថាៈ ឱវិនាសអន្តរាយហើយពួកយើង! តើអ្នកណាបានបញ្ចេញពួកយើងពីកន្លែងដេក(ផ្នូរ)របស់ពួកយើង? (សម្រែកមួយបានឆ្លើយតបមកថា) នេះគឺជាអ្វីដែលម្ចាស់មហា សប្បុរសបានសន្យា និងអ្វីដែលអ្នកនាំសារបានបញ្ជាក់ប្រាប់ ។

إِن كَانَتْ إِلَّا صَيْحَةً وَٰحِدَةً فَإِذَا هُمْ
جَمِيعٌ لَّدَيْنَا مُحْضَرُونَ ﴿٥٣﴾

៥៣-ការវិនាសរបស់ពួកគេគ្មានអ្វីក្រៅពីសម្រែកមួយយ៉ាង ខ្លាំងនោះឡើយ ស្រាប់តែនៅពេលនោះ ពួកគេទាំងអស់នឹងត្រូវគេ ប្រមូលមកកាន់យើង ។

فَٱلْيَوْمَ لَا تُظْلَمُ نَفْسٌ شَيْـًٔا وَلَا تُجْزَوْنَ
إِلَّا مَا كُنتُمْ تَعْمَلُونَ ﴿٥٤﴾

៥៤-ដូច្នេះ នៅថ្ងៃនេះគេមិនបំពានលើអ្នកណាម្នាក់ឡើយ សូម្បីតែបន្តិចក៏ដោយ ។ ហើយពួកអ្នកក៏មិនត្រូវគេតបស្នងដែរ លើកលែងតែអ្វីដែលពួកអ្នកធ្លាប់ប្រព្រឹត្តប៉ុណ្ណោះ ។

إِنَّ أَصْحَٰبَ ٱلْجَنَّةِ ٱلْيَوْمَ فِى شُغُلٍ
فَٰكِهُونَ ﴿٥٥﴾

៥៥-ពិតប្រាកដណាស់ បណ្តាអ្នកដែលនៅក្នុងឋានសួគ៌នៅថ្ងៃ នោះ ពួកគេរវល់នឹងភាពសប្បាយរីករាយ ។

هُمْ وَأَزْوَٰجُهُمْ فِى ظِلَٰلٍ عَلَى ٱلْأَرَآئِكِ
مُتَّكِـُٔونَ ﴿٥٦﴾

៥៦-ពួកគេនិងភរិយារបស់ពួកគេអង្គុយផ្អែកខ្លួនលើគ្រែដ៏ ប្រណីតក្រោមម្លប់ ។

لَهُمْ فِيهَا فَٰكِهَةٌ وَلَهُم مَّا يَدَّعُونَ ﴿٥٧﴾

៥៧-នៅក្នុងឋានសួគ៌នោះ មានផ្លែឈើគ្រប់ប្រភេទសម្រាប់

ពួកគេ ហើយពួកគេទទួលបាននូវអ្វីៗដែលពួកគេសុំ។

سَلَـٰمٌ قَوْلًا مِّن رَّبٍّ رَّحِيمٍ ﴿٥٨﴾

៥៨-សាឡាម ជាបន្ទូលស្វាគមន៍ពីម្ចាស់ដែលមហាអាណិតស្រឡាញ់។

وَٱمْتَـٰزُوا۟ ٱلْيَوْمَ أَيُّهَا ٱلْمُجْرِمُونَ ﴿٥٩﴾

៥៩-ឱពួកដែលប្រព្រឹត្តអំពើបាប! នៅថ្ងៃនេះ ចូរពួកអ្នកចៀសឱ្យឆ្ងាយ(ពីបណ្តាអ្នកដែលមានជំនឿ)។

۞ أَلَمْ أَعْهَدْ إِلَيْكُمْ يَـٰبَنِىٓ ءَادَمَ أَن لَّا تَعْبُدُوا۟ ٱلشَّيْطَـٰنَ ۖ إِنَّهُۥ لَكُمْ عَدُوٌّ مُّبِينٌ ﴿٦٠﴾

៦០-ឱកូនចៅអាដាំ! តើយើងមិនបានបញ្ជាពួកអ្នកកុំឱ្យគោរពសក្ការៈចំពោះស្ហៃតនទេឬ? ពិតប្រាកដណាស់ វាគឺជាសត្រូវរបស់ពួកអ្នកយ៉ាងច្បាស់លាស់។

وَأَنِ ٱعْبُدُونِى ۚ هَـٰذَا صِرَٰطٌ مُّسْتَقِيمٌ ﴿٦١﴾

៦១-ហើយពួកអ្នកត្រូវគោរពសក្ការៈមកចំពោះយើង។ នេះហើយជាមាគ៌ាដ៏ត្រឹមត្រូវ។

وَلَقَدْ أَضَلَّ مِنكُمْ جِبِلًّا كَثِيرًا ۖ أَفَلَمْ تَكُونُوا۟ تَعْقِلُونَ ﴿٦٢﴾

៦២-ហើយជាការពិតណាស់ វា(ស្ហៃតន)បានធ្វើឱ្យវង្វេងមួយចំនួនធំក្នុងចំណោមពួកអ្នក។ ដូច្នេះ តើពួកអ្នកមិនបានពិចារណាទេឬ?

هَـٰذِهِۦ جَهَنَّمُ ٱلَّتِى كُنتُمْ تُوعَدُونَ ﴿٦٣﴾

៦៣-នេះគឺជានរកជើហាន់ណាំដែលពួកអ្នកធ្លាប់ត្រូវបានគេសន្យា។

ٱصْلَوْهَا ٱلْيَوْمَ بِمَا كُنتُمْ تَكْفُرُونَ ﴿٦٤﴾

៦៤-ចូរពួកអ្នកចូលទៅក្នុងវា(នរក)ចុះនៅថ្ងៃនេះដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានប្រឆាំង។

ٱلْيَوْمَ نَخْتِمُ عَلَىٰٓ أَفْوَٰهِهِمْ وَتُكَلِّمُنَآ أَيْدِيهِمْ وَتَشْهَدُ أَرْجُلُهُم بِمَا كَانُوا۟ يَكْسِبُونَ ﴿٦٥﴾

៦៥-នៅថ្ងៃនេះ(ថ្ងៃជំនុំជំរះ)យើងនឹងបោះត្រាភ្ជិតលើមាត់របស់ពួកគេ។ ហើយដៃរបស់ពួកគេនឹងនិយាយមកកាន់យើង ព្រមទាំងជើងរបស់ពួកគេនឹងធ្វើសាក្សីចំពោះអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត។

وَلَوْ نَشَآءُ لَطَمَسْنَا عَلَىٰٓ أَعْيُنِهِمْ فَٱسْتَبَقُوا۟ ٱلصِّرَٰطَ فَأَنَّىٰ يُبْصِرُونَ ﴿٦٦﴾

៦៦-ហើយប្រសិនបើយើងមានចេតនា យើងពិតជានឹងធ្វើឱ្យភ្នែករបស់ពួកគេងងឹត ហើយពួកគេដណ្តើមគ្នារកផ្លូវរៀងៗខ្លួន។ ដូច្នេះ តើពួកគេអាចមើលឃើញយ៉ាងដូចម្តេច?

وَلَوْ نَشَآءُ لَمَسَخْنَـٰهُمْ عَلَىٰ مَكَانَتِهِمْ فَمَا ٱسْتَطَـٰعُوا۟ مُضِيًّا وَلَا يَرْجِعُونَ ﴿٦٧﴾

៦៧-ហើយប្រសិនបើយើងមានចេតនា យើងពិតជានឹងបញ្ឈប់ចលនារបស់ពួកគេឱ្យនៅនឹងមួយកន្លែង(ប្រព្រឹត្តអំពើអាក្រក់)របស់ពួកគេ។ ហើយពួកគេមិនអាចធ្វើដំណើរទៅមុខរួច និងមិនអាច

ត្រឡប់មកក្រោយវិញបានឡើយ ។

وَمَن نُّعَمِّرْهُ نُنَكِّسْهُ فِي ٱلْخَلْقِ ۖ أَفَلَا يَعْقِلُونَ ﴿٦٨﴾

៦៨-ហើយអ្នកណាដែលយើងឱ្យគេមានអាយុវែង( រហូតដល់ចាស់ជរា) យើងនឹងធ្វើឱ្យគេត្រឡប់ទៅភាពដើមវិញ( ទន់ខ្សោយដូចទារក) ។ ដូច្នេះ តើពួកគេមិនគិតពិចារណាទេឬ?

وَمَا عَلَّمْنَٰهُ ٱلشِّعْرَ وَمَا يَنۢبَغِي لَهُۥٓ ۚ إِنْ هُوَ إِلَّا ذِكْرٌ وَقُرْءَانٌ مُّبِينٌ ﴿٦٩﴾

៦៩-ហើយយើងមិនបានបង្រៀនកំណាព្យដល់គេ( មូហាំម៉ាត់) ឡើយ ហើយវាក៏មិនចាំបាច់ចំពោះគេដែរ ។ វាមិនមែនជាអ្វីក្រៅពីជាការរំលឹក និងគម្ពីរគួរអានដ៏ច្បាស់លាស់នោះឡើយ ។

لِّيُنذِرَ مَن كَانَ حَيًّا وَيَحِقَّ ٱلْقَوْلُ عَلَى ٱلْكَٰفِرِينَ ﴿٧٠﴾

៧០-ដើម្បីឱ្យគេ( មូហាំម៉ាត់) ដាស់តឿនព្រមានចំពោះអ្នកដែលនៅរស់ និងដើម្បីឱ្យទារុណកម្មធ្លាក់ទៅលើពួកដែលប្រឆាំង ។

أَوَلَمْ يَرَوْا۟ أَنَّا خَلَقْنَا لَهُم مِّمَّا عَمِلَتْ أَيْدِينَآ أَنْعَٰمًا فَهُمْ لَهَا مَٰلِكُونَ ﴿٧١﴾

៧១-តើពួកគេ( ពួកគ្មានជំនឿ) មិនបានឃើញទេឬ ពិតប្រាកដណាស់ យើងបានបង្កើតសត្វពាហនៈជាច្រើនសម្រាប់ពួកគេដែលដៃរបស់យើងបានបង្កើតដោយផ្ទាល់ ហើយពួកគេជាអ្នកគ្រប់គ្រងវានោះ?

وَذَلَّلْنَٰهَا لَهُمْ فَمِنْهَا رَكُوبُهُمْ وَمِنْهَا يَأْكُلُونَ ﴿٧٢﴾

៧២-ហើយយើងបានធ្វើឱ្យពួកវា( សត្វពាហនៈ) ស្តាប់បង្គាប់ពួកគេ ហើយពួកវាមួយចំនួនជាជំនិះរបស់ពួកគេ និងមួយចំនួនទៀតពួកគេអាចបរិភោគបាន ។

وَلَهُمْ فِيهَا مَنَٰفِعُ وَمَشَارِبُ ۖ أَفَلَا يَشْكُرُونَ ﴿٧٣﴾

៧៣-ហើយពួកគេទទួលបានផលប្រយោជន៍ និងទឹកដោះជាច្រើនពីពួកវា ។ ដូច្នេះ តើពួកគេមិនដឹងគុណទេឬ?

وَٱتَّخَذُوا۟ مِن دُونِ ٱللَّهِ ءَالِهَةً لَّعَلَّهُمْ يُنصَرُونَ ﴿٧٤﴾

៧៤-ហើយពួកគេបានយកម្ចាស់ផ្សេងៗមកគោរពសក្ការៈក្រៅពីអល់ឡោះ ដោយពួកគេសង្ឃឹមថា ពួកគេនឹងត្រូវគេ( ម្ចាស់ផ្សេង) ជួយ ។

لَا يَسْتَطِيعُونَ نَصْرَهُمْ وَهُمْ لَهُمْ جُندٌ مُّحْضَرُونَ ﴿٧٥﴾

៧៥-ពួកវា( ម្ចាស់ផ្សេង) មិនអាចជួយពួកគេបានឡើយ តែពួកគេវិញទេដែលជាទាហានត្រូវគេប្រមូលផ្តុំសម្រាប់ការពារពួកវានោះ ។

فَلَا يَحْزُنكَ قَوْلُهُمْ ۘ إِنَّا نَعْلَمُ مَا يُسِرُّونَ

៧៦-ដូច្នេះ ចូរកុំឱ្យពាក្យសំដីរបស់ពួកគេធ្វើឱ្យអ្នក( មូហាំម៉ាត់) កើតទុក្ខឱ្យសោះ ព្រោះយើងពិតជាដឹងនូវអ្វីដែលពួកគេលាក់បាំង

និងអ្វីដែលពួកគេលាតត្រដាង។

٧٧-តើមនុស្សលោកមិនឃើញទេឬថា ពិតប្រាកដណាស់ យើងបានបង្កើតគេអំពីទឹកកាម រួចមកស្រាប់តែគេក្លាយជាអ្នកដែលប្រឆាំងដ៏ច្បាស់លាស់នោះ?

៧៨-ហើយគេបានលើកឧទាហរណ៍សម្រាប់យើង និងបានភ្លេចកំណើតរបស់គេ ដោយគេបានសួរថាៈ តើអ្នកណាអាចធ្វើឱ្យឆ្អឹងរស់ឡើងវិញ ខណៈដែលវាបានពុកផុយហើយនោះ?

៧៩-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ អ្នកដែលធ្វើឱ្យវារស់ឡើងវិញនោះ គឺអ្នកដែលបានបង្កើតវាពីដំបូង។ ហើយទ្រង់ដឹងបំផុតពីអ្វីដែលទ្រង់បានបង្កើត។

៨០-ទ្រង់ជាអ្នកបង្កើតភ្លើងអំពីឈើបៃតងសម្រាប់ពួកអ្នក ហើយពេលនោះពួកអ្នកអាចបង្កាត់ភ្លើងពីវាបាន។

៨១-តើអ្នកដែលបង្កើតមេឃជាច្រើនជាន់ និងផែនដីមិនមែនជាអ្នកដែលមានសមត្ថភាពលើការបង្កើតឱ្យដូចពួកគេទេឬ ? ផ្ទុយទៅវិញ ទ្រង់ជាអ្នកមានអានុភាពបង្កើត មហាដឹង។

៨២-ពិតប្រាកដណាស់ បញ្ជារបស់ទ្រង់ ពេលណាទ្រង់មានបំណងបង្កើតអ្វីមួយ ទ្រង់គ្រាន់តែមានបន្ទូលទៅកាន់វាថាៈ ចូរកើតចុះ វាក៏កើតឡើងភ្លាម។

៨៣-ដូច្នេះ មហាស្អាតស្អំចំពោះអ្នកដែលគ្រប់គ្រងរាល់អ្វីៗទាំងអស់ក្នុងកណ្តាប់ដៃរបស់ទ្រង់។ ហើយពួកអ្នកនឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់តែមួយគត់។

## ជំពូកអាស់សហ្វហ្វាត

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-អល់ឡោះស្បថនឹងបណ្តាអ្នកដែលរៀបជាជួរ(ក្រុមម៉ាឡាអ៊ីកាត់)។

وَمَا يُعۡلِنُونَ ﴿٧٦﴾

أَوَلَمۡ يَرَ ٱلۡإِنسَٰنُ أَنَّا خَلَقۡنَٰهُ مِن نُّطۡفَةٖ فَإِذَا
هُوَ خَصِيمٞ مُّبِينٞ ﴿٧٧﴾

وَضَرَبَ لَنَا مَثَلٗا وَنَسِيَ خَلۡقَهُۥۖ قَالَ مَن
يُحۡيِ ٱلۡعِظَٰمَ وَهِيَ رَمِيمٞ ﴿٧٨﴾

قُلۡ يُحۡيِيهَا ٱلَّذِيٓ أَنشَأَهَآ أَوَّلَ مَرَّةٖۖ وَهُوَ
بِكُلِّ خَلۡقٍ عَلِيمٌ ﴿٧٩﴾

ٱلَّذِي جَعَلَ لَكُم مِّنَ ٱلشَّجَرِ ٱلۡأَخۡضَرِ نَارٗا
فَإِذَآ أَنتُم مِّنۡهُ تُوقِدُونَ ﴿٨٠﴾

أَوَلَيۡسَ ٱلَّذِي خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ
بِقَٰدِرٍ عَلَىٰٓ أَن يَخۡلُقَ مِثۡلَهُمۚ بَلَىٰ وَهُوَ ٱلۡخَلَّٰقُ
ٱلۡعَلِيمُ ﴿٨١﴾

إِنَّمَآ أَمۡرُهُۥٓ إِذَآ أَرَادَ شَيۡـًٔا أَن يَقُولَ لَهُۥ كُن
فَيَكُونُ ﴿٨٢﴾

فَسُبۡحَٰنَ ٱلَّذِي بِيَدِهِۦ مَلَكُوتُ كُلِّ شَيۡءٖ
وَإِلَيۡهِ تُرۡجَعُونَ ﴿٨٣﴾

سورة الصافات

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

وَٱلصَّٰٓفَّٰتِ صَفّٗا ﴿١﴾

فَٱلزَّٰجِرَٰتِ زَجۡرٗا ﴿٢﴾

២-អល់ឡោះស្បថនឹងបណ្ដាអ្នកដែលនាំពពក( ក្រុមម៉ាឡាអ៊ីកាត់ ) ។

فَٱلتَّٰلِيَٰتِ ذِكۡرًا ﴿٣﴾

៣-អល់ឡោះស្បថនឹងបណ្ដាអ្នកដែលសូត្របន្ទូលរបស់អល់ឡោះ( ក្រុមម៉ាឡាអ៊ីកាត់ ) ។

إِنَّ إِلَٰهَكُمۡ لَوَٰحِدٞ ﴿٤﴾

៤-ពិតប្រាកដណាស់ ម្ចាស់ដែលត្រូវគោរពសក្ការៈរបស់ពួកអ្នក គឺមានតែមួយគត់ ។

رَّبُّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَمَا بَيۡنَهُمَا وَرَبُّ ٱلۡمَشَٰرِقِ ﴿٥﴾

៥-ជាម្ចាស់គ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី និងអ្វីដែលមាននៅចន្លោះវាទាំងពីរ ហើយជាម្ចាស់ដែលគ្រប់គ្រងទិសនៃព្រះអាទិត្យរះ និងទិសនៃព្រះអាទិត្យលិច ។

إِنَّا زَيَّنَّا ٱلسَّمَآءَ ٱلدُّنۡيَا بِزِينَةٍ ٱلۡكَوَاكِبِ ﴿٦﴾

៦-ពិតប្រាកដណាស់ យើងបានលំអមេឃជាន់ទីមួយនៃផែនដីលំអដោយផ្កាយជាច្រើន ។

وَحِفۡظٗا مِّن كُلِّ شَيۡطَٰنٖ مَّارِدٖ ﴿٧﴾

៧-ហើយ( យើងធ្វើឱ្យផ្កាយទាំងនោះ ) ការពារអំពីស្ទៃតនទាំងអស់ដែលរឹងរូស ។

لَّا يَسَّمَّعُونَ إِلَى ٱلۡمَلَإِ ٱلۡأَعۡلَىٰ وَيُقۡذَفُونَ مِن كُلِّ جَانِبٖ ﴿٨﴾

៨-ពួកវាមិនអាចទៅលបស្ដាប់បណ្ដាម៉ាឡាអ៊ីកាត់( ពិភាក្សាគ្នា ) បានឡើយ ហើយពួកវានឹងត្រូវគេគប់( ដោយភ្លើងផ្កាយ ) ពីគ្រប់ទិសទី

دُحُورٗاۖ وَلَهُمۡ عَذَابٞ وَاصِبٌ ﴿٩﴾

៩-ដើម្បីបណ្ដេញពួកវា ។ ហើយពួកវានឹងទទួលទារុណកម្មជាអមតៈ

إِلَّا مَنۡ خَطِفَ ٱلۡخَطۡفَةَ فَأَتۡبَعَهُۥ شِهَابٞ ثَاقِبٞ ﴿١٠﴾

១០-លើកលែងតែអ្នកណាដែលបានលួចស្ដាប់( ពាក្យសំដីម៉ាឡាអ៊ីកាត់ ) រួចផ្កាយដែលមានភ្លើងបានដេញតាមដុតវាប៉ុណ្ណោះ ។

فَٱسۡتَفۡتِهِمۡ أَهُمۡ أَشَدُّ خَلۡقًا أَم مَّنۡ خَلَقۡنَآۚ إِنَّا خَلَقۡنَٰهُم مِّن طِينٖ لَّازِبِۭ ﴿١١﴾

១១-ដូច្នេះ ចូរអ្នក( មូហាំម៉ាត់ ) សួរពួកគេ( ពួកមូស្ហរីគីន ) ថាៈ តើពួកគេជាអ្នកខ្លាំងជាង ឬអ្វី( មេឃ ដី ម៉ាឡាអ៊ីកាត់ ) ដែលយើងបានបង្កើតខ្លាំងជាង? ពិតប្រាកដណាស់ យើងបានបង្កើតពួកគេអំពីដីដែលស្អិត ។

بَلۡ عَجِبۡتَ وَيَسۡخَرُونَ ﴿١٢﴾

១២-ផ្ទុយទៅវិញ អ្នក( មូហាំម៉ាត់ ) ងឿងឆ្ងល់យ៉ាងខ្លាំង ខណៈដែលពួកគេចំអកមើលងាយ( ចំពោះគម្ពីរគួរអាន និងសំណួររបស់

អ្នក) ។

១៣-ហើយនៅពេលដែលពួកគេត្រូវគេរំលឹក ពួកគេបែរជាមិនយកចិត្តទុកដាក់ទៅវិញ ។

وَإِذَا ذُكِّرُواْ لَا يَذْكُرُونَ ﴿١٣﴾

១៤-ហើយនៅពេលដែលពួកគេបានឃើញភស្តុតាងណាមួយ ពួកគេក៏ចំអកមើលងាយ ។

وَإِذَا رَأَوْاْ ءَايَةً يَسْتَسْخِرُونَ ﴿١٤﴾

១៥-ហើយពួកគេបាននិយាយថាៈ នេះគ្មានអ្វីក្រៅពីមន្តអាគមដ៏ច្បាស់លាស់នោះឡើយ ។

وَقَالُوٓاْ إِنْ هَٰذَآ إِلَّا سِحْرٌ مُّبِينٌ ﴿١٥﴾

១៦-តើនៅពេលដែលពួកយើងស្លាប់ ហើយពួកយើងបានក្លាយទៅជាដីនិងឆ្អឹងហើយនោះ ពួកយើងពិតជាត្រូវគេធ្វើឱ្យរស់ចេញពីផ្នូរឡើងវិញមែនឬ?

أَءِذَا مِتْنَا وَكُنَّا تُرَابًا وَعِظَٰمًا أَءِنَّا لَمَبْعُوثُونَ ﴿١٦﴾

១៧-ហើយតើជីដូនជីតារបស់ពួកយើងពីមុន( ក៏ត្រូវគេធ្វើឱ្យរស់ចេញពីផ្នូរឡើងវិញ) ដែរឬ?

أَوَءَابَآؤُنَا ٱلْأَوَّلُونَ ﴿١٧﴾

១៨-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ពិតហើយ( ពួកអ្នកនឹងត្រូវគេធ្វើឱ្យរស់ចេញពីផ្នូរឡើងវិញទាំងអស់) ដោយពួកអ្នកជាពួកដែលថោកទាប ។

قُلْ نَعَمْ وَأَنتُمْ دَٰخِرُونَ ﴿١٨﴾

១៩-ហើយតាមពិតវា( ការរស់ចេញពីផ្នូរឡើងវិញ) គ្រាន់តែជាការផ្លុំត្រែមួយដងប៉ុណ្ណោះ ។ ពេលនោះពួកគេស្រាប់តែមើលឃើញ( ភាពវឹកវរនៃថ្ងៃបរលោក) ។

فَإِنَّمَا هِيَ زَجْرَةٌ وَٰحِدَةٌ فَإِذَا هُمْ يَنظُرُونَ ﴿١٩﴾

២០-ហើយពួកគេបាននិយាយថាៈ ឱវិនាសអន្តរាយហើយពួកយើង! នេះគឺជាថ្ងៃជំនុំជំរះ ។

وَقَالُواْ يَٰوَيْلَنَا هَٰذَا يَوْمُ ٱلدِّينِ ﴿٢٠﴾

២១-នេះហើយគឺជាថ្ងៃកាត់សេចក្តី ដែលពួកអ្នកធ្លាប់បានបដិសេធនឹងវានោះ ។

هَٰذَا يَوْمُ ٱلْفَصْلِ ٱلَّذِي كُنتُم بِهِۦ تُكَذِّبُونَ ﴿٢١﴾

២២( អល់ឡោះបានបញ្ជាម៉ាឡាអ៊ីកាត់ថា) ចូរពួកអ្នកប្រមូលពួកដែលបានបំពាន និងគូកនរបស់ពួកគេ ហើយនិងអ្វី( ព្រះនានា) ដែលពួកគេធ្លាប់បានគោរព សក្ការៈ

۞ ٱحْشُرُواْ ٱلَّذِينَ ظَلَمُواْ وَأَزْوَٰجَهُمْ وَمَا كَانُواْ يَعْبُدُونَ ﴿٢٢﴾

២៣-ផ្សេងពីអល់ឡោះមក ។ ហើយចូរពួកអ្នកបង្ហាញពួកគេ

مِن دُونِ ٱللَّهِ فَٱهْدُوهُمْ إِلَىٰ صِرَٰطِ

ٱلْجَحِيمِ ﴿٢٣﴾

ទៅកាន់ផ្លូវនរកជើហ៊ីមចុះ។

وَقِفُوهُمْ ۖ إِنَّهُم مَّسْـُٔولُونَ ﴿٢٤﴾

២៤-ហើយចូរពួកអ្នកបញ្ឈប់ពួកគេ។ ពិតប្រាកដណាស់ ពួកគេនឹងត្រូវគេសួរចម្លើយ។

مَا لَكُمْ لَا تَنَاصَرُونَ ﴿٢٥﴾

២៥-ហេតុអ្វីបានជាពួកអ្នកមិនជួយគ្នាទៅវិញទៅមកទៅ?

بَلْ هُمُ ٱلْيَوْمَ مُسْتَسْلِمُونَ ﴿٢٦﴾

២៦-ផ្ទុយទៅវិញ ពួកគេនៅថ្ងៃនេះ គឺជាពួកដែលប្រគល់ខ្លួន។

وَأَقْبَلَ بَعْضُهُمْ عَلَىٰ بَعْضٍ يَتَسَآءَلُونَ ﴿٢٧﴾

២៧-ហើយពួកគេសំដៅទៅរកគ្នា ដោយពួកគេសួរ(ឈ្លោះប្រកែក)គ្នាទៅវិញទៅមក។

قَالُوٓاْ إِنَّكُمْ كُنتُمْ تَأْتُونَنَا عَنِ ٱلْيَمِينِ ﴿٢٨﴾

២៨-ដោយពួកគេបាននិយាយ(ទៅកាន់ពួកមេដឹកនាំរបស់ពួកគេ)ថាៈ ពិតប្រាកដណាស់ ពួកអ្នកបានបោកប្រាស់ពួកយើងថា សាសនាដែលពួកអ្នកនាំមកគឺត្រឹមត្រូវ។

قَالُواْ بَل لَّمْ تَكُونُواْ مُؤْمِنِينَ ﴿٢٩﴾

២៩-ពួកគេ(មេដឹកនាំ)បានតបវិញថាៈ ផ្ទុយទៅវិញ ពួកអ្នកទេដែលគ្មានជំនឿ(លើអល់ឡោះ)។

وَمَا كَانَ لَنَا عَلَيْكُم مِّن سُلْطَٰنٍ ۖ بَلْ كُنتُمْ قَوْمًا طَٰغِينَ ﴿٣٠﴾

៣០-ហើយពួកយើងក៏គ្មានអំណាចគៀបសង្កត់ពួកអ្នក(មិនឱ្យជឿលើអល់ឡោះ)ដែរ។ ផ្ទុយទៅវិញ ពួកអ្នកទេជាក្រុមដែលវង្វេងនោះ។

فَحَقَّ عَلَيْنَا قَوْلُ رَبِّنَآ ۖ إِنَّا لَذَآئِقُونَ ﴿٣١﴾

៣១-ហើយការព្រមាន(ទារុណកម្ម)នៃម្ចាស់របស់ពួកយើងបានធ្លាក់មកលើពួកយើង។ ពិតប្រាកដណាស់ ពួកយើងគឺជាពួកដែលត្រូវភ្លក្សទារុណកម្ម។

فَأَغْوَيْنَٰكُمْ إِنَّا كُنَّا غَٰوِينَ ﴿٣٢﴾

៣២-ហើយពួកយើងបានធ្វើឱ្យពួកអ្នកវង្វេង។ ពិតប្រាកដណាស់ ពួកយើងគឺជាពួកដែលបានវង្វេង។

فَإِنَّهُمْ يَوْمَئِذٍ فِى ٱلْعَذَابِ مُشْتَرِكُونَ ﴿٣٣﴾

៣៣-ដូច្នេះ នៅថ្ងៃនោះពួកគេពិតជាត្រូវទទួលរងនូវទារុណ-កម្មរួមជាមួយគ្នាទាំងអស់។

إِنَّا كَذَٰلِكَ نَفْعَلُ بِٱلْمُجْرِمِينَ ﴿٣٤﴾

៣៤-ពិតប្រាកដណាស់ យើង(អល់ឡោះ)ក៏ធ្វើដូច្នេះដែរ ចំពោះពួកដែលប្រព្រឹត្តបាបកម្ម។

إِنَّهُمْ كَانُوٓاْ إِذَا قِيلَ لَهُمْ لَآ إِلَٰهَ إِلَّا ٱللَّهُ

៣៥-ពិតប្រាកដណាស់ ពួកគេកាលពីមុននៅពេលដែលមានគេនិយាយទៅកាន់ពួកគេថាៈ គ្មានម្ចាស់ណាផ្សេងត្រូវគេគោរពសក្ការៈ

| | |
|---|---|
| يَسْتَكْبِرُونَ ﴿٣٥﴾ | ពិតប្រាកដក្រៅពីទ្រង់នោះ គឺពួកគេក្រអឺតក្រទម ។ |
| وَيَقُولُونَ أَئِنَّا لَتَارِكُوٓاْ ءَالِهَتِنَا لِشَاعِرٍ مَّجْنُونٍ ﴿٣٦﴾ | ៣៦-ហើយពួកគេនិយាយថាៈ តើពិតជាឱ្យពួកយើងបោះបង់ចោលព្រះនានារបស់ពួកយើង ព្រោះតែកវីវិកលចរិតម្នាក់នេះឬ? |
| بَلْ جَآءَ بِٱلْحَقِّ وَصَدَّقَ ٱلْمُرْسَلِينَ ﴿٣٧﴾ | ៣៧-ផ្ទុយទៅវិញ គេ( មូហាំម៉ាត់) បាននាំមកនូវការពិតហើយបានបញ្ជាក់ពីបណ្ដាអ្នកនាំសារមុនៗ ។ |
| إِنَّكُمْ لَذَآئِقُواْ ٱلْعَذَابِ ٱلْأَلِيمِ ﴿٣٨﴾ | ៣៨-ពិតប្រាកដណាស់ ពួកអ្នកគឺជាពួកដែលភ្លក្សរសជាតិទារុណកម្មដ៏ឈឺចាប់ ។ |
| وَمَا تُجْزَوْنَ إِلَّا مَا كُنتُمْ تَعْمَلُونَ ﴿٣٩﴾ | ៣៩-ហើយពួកអ្នកមិនត្រូវគេតបស្នងក្រៅពីអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្តនោះឡើយ ។ |
| إِلَّا عِبَادَ ٱللَّهِ ٱلْمُخْلَصِينَ ﴿٤٠﴾ | ៤០-ក៏ប៉ុន្តែ បណ្ដាខ្ញុំរបស់អល់ឡោះដែលបរិសុទ្ធ( ក្នុងការគោរពសក្ការៈ) |
| أُوْلَٰٓئِكَ لَهُمْ رِزْقٌ مَّعْلُومٌ ﴿٤١﴾ | ៤១-អ្នកទាំងនោះនឹងទទួលបានលាភសក្ការៈ ដែលគេកំណត់រួចជាស្រេច( ក្នុងឋានសួគ៌) ។ |
| فَوَٰكِهُ ۖ وَهُم مُّكْرَمُونَ ﴿٤٢﴾ | ៤២-វានោះគឺផ្លែឈើគ្រប់ប្រភេទ ។ ហើយពួកគេត្រូវបានគេលើកតម្កើង |
| فِي جَنَّٰتِ ٱلنَّعِيمِ ﴿٤٣﴾ | ៤៣-នៅក្នុងឋានសួគ៌ណាអ៊ីម ។ |
| عَلَىٰ سُرُرٍ مُّتَقَٰبِلِينَ ﴿٤٤﴾ | ៤៤-ដោយពួកគេអង្គុយលើគ្រែទល់មុខគ្នា( យ៉ាងសប្បាយរីករាយ) ។ |
| يُطَافُ عَلَيْهِم بِكَأْسٍ مِّن مَّعِينٍ ﴿٤٥﴾ | ៤៥-គេដាក់នៅជុំវិញពួកគេនូវកែវស្រាមកពីទន្លេស្រាដែលហូរ |
| بَيْضَآءَ لَذَّةٍ لِّلشَّٰرِبِينَ ﴿٤٦﴾ | ៤៦-មានពណ៌សដែលមានរសជាតិឆ្ងាញ់សម្រាប់បណ្ដាអ្នកដែលទទួលទាន ។ |
| لَا فِيهَا غَوْلٌ وَلَا هُمْ عَنْهَا يُنزَفُونَ ﴿٤٧﴾ | ៤៧-ដែលនៅក្នុងវា( ស្រា) មិនធ្វើឱ្យប៉ះពាល់ដល់សុខភាពឡើយ ហើយក៏មិនឱ្យពួកគេស្រវឹងដោយសារវាដែរ ។ |
| وَعِندَهُمْ قَٰصِرَٰتُ ٱلطَّرْفِ عِينٌ ﴿٤٨﴾ | ៤៨-ហើយនៅក្បែរពួកគេមានស្រីទេពអប្សរជាច្រើន ។ |

كَأَنَّهُنَّ بَيۡضٞ مَّكۡنُونٞ ٤٩

៤៩-ពួកនាងប្រៀបដូចជាពងសត្វដែលគេថែរក្សាយ៉ាងល្អបំផុត ។

فَأَقۡبَلَ بَعۡضُهُمۡ عَلَىٰ بَعۡضٖ يَتَسَآءَلُونَ ٥٠

៥០-ហើយពួកគេសំដៅទៅរកគ្នាដោយសួរគ្នាទៅវិញទៅមក ។

قَالَ قَآئِلٞ مِّنۡهُمۡ إِنِّي كَانَ لِي قَرِينٞ ٥١

៥១-ម្នាក់ក្នុងចំណោមពួកគេបាននិយាយថា: ពិតប្រាកដណាស់ ខ្ញុំធ្លាប់មានមិត្តភក្តិម្នាក់(ក្នុងលោកិយ)

يَقُولُ أَءِنَّكَ لَمِنَ ٱلۡمُصَدِّقِينَ ٥٢

៥២-ដែលគេនិយាយថា: តើអ្នកពិតជាស្ថិតក្នុងចំណោមអ្នកដែលមានជំនឿ(នឹងការរស់ចេញពីផ្នូរឡើងវិញ)ឬ?

أَءِذَا مِتۡنَا وَكُنَّا تُرَابٗا وَعِظَٰمًا أَءِنَّا لَمَدِينُونَ ٥٣

៥៣-តើនៅពេលដែលយើងស្លាប់ ហើយយើងបានក្លាយទៅជាដី និងឆ្អឹងហើយនោះ តើពួកយើងពិតជាត្រូវគេតបស្នង(នូវទង្វើទាំងឡាយរបស់ពួកយើង)ឬ?

قَالَ هَلۡ أَنتُم مُّطَّلِعُونَ ٥٤

៥៤-ម្នាក់នោះបាននិយាយទៀតថា: តើពួកអ្នកឃើញ(មិត្តភក្តិរបស់យើងកាលនៅលោកិយ)ដែរឬទេ?

فَٱطَّلَعَ فَرَءَاهُ فِي سَوَآءِ ٱلۡجَحِيمِ ٥٥

៥៥-រួចមកគេក៏ទៅរកមើល ពេលនោះគេស្រាប់តែឃើញមិត្តរបស់គេស្ថិតនៅកណ្ដាលនរកជើហ៊ីម ។

قَالَ تَٱللَّهِ إِن كِدتَّ لَتُرۡدِينِ ٥٦

៥៦-គេក៏បាននិយាយថា: សូមស្បថនឹងអល់ឡោះ តាមពិតអ្នកស្ទើរតែធ្វើឱ្យខ្ញុំធ្លាក់ក្នុងនរក(ដូចអ្នក) ។

وَلَوۡلَا نِعۡمَةُ رَبِّي لَكُنتُ مِنَ ٱلۡمُحۡضَرِينَ ٥٧

៥៧-ហើយប្រសិនបើគ្មាននៀកម៉ាត់នៃម្ចាស់របស់ខ្ញុំទេ ខ្ញុំពិតជាស្ថិតក្នុងចំណោមអ្នកដែលត្រូវគេប្រមូល(ធ្វើទារុណកម្ម)ជាមិនខាន ។

أَفَمَا نَحۡنُ بِمَيِّتِينَ ٥٨

៥៨-(អ្នកឋានសួគ៌បានសួរគ្នាថា) ដូច្នេះ តើពួកយើងមិនស្លាប់

إِلَّا مَوۡتَتَنَا ٱلۡأُولَىٰ وَمَا نَحۡنُ بِمُعَذَّبِينَ ٥٩

៥៩-ក្រៅពីការស្លាប់របស់ពួកយើងជាលើកដំបូង(ក្នុងលោកិយ) ហើយពួកយើងមិនមែនជាអ្នកដែលត្រូវគេធ្វើទារុណកម្មទេឬ?

إِنَّ هَٰذَا لَهُوَ ٱلۡفَوۡزُ ٱلۡعَظِيمُ ٦٠

៦០-ពិតប្រាកដណាស់ នេះហើយជាជោគជ័យដ៏ធំធេង ។

لِمِثۡلِ هَٰذَا فَلۡيَعۡمَلِ ٱلۡعَٰمِلُونَ ٦١

៦១-ដើម្បីចង់បានដូចនេះ ដូច្នេះចូរឱ្យបណ្ដាអ្នកដែលសាងអំពើល្អខិតខំសាងអំពើល្អ(នៅក្នុងលោកិយ) ។

أَذَٰلِكَ خَيۡرٞ نُّزُلًا أَمۡ شَجَرَةُ ٱلزَّقُّومِ ﴿٦٢﴾

៦២-តើអ្វី(ចំណីអាហារ)ដែលគេត្រៀមឱ្យ(អ្នកឋានសួគ៌)នោះល្អជាង ឬដើមហ្សឺកគូម(ដែលជាចំណីពួកនរក)ល្អជាង?

إِنَّا جَعَلۡنَٰهَا فِتۡنَةٗ لِّلظَّٰلِمِينَ ﴿٦٣﴾

៦៣-ពិតប្រាកដណាស់ យើងបានបង្កើតវា(ដើមហ្សឺកគូម)ជាទារុណកម្មសម្រាប់ពួកបំពាន។

إِنَّهَا شَجَرَةٞ تَخۡرُجُ فِيٓ أَصۡلِ ٱلۡجَحِيمِ ﴿٦٤﴾

៦៤-ពិតប្រាកដណាស់ វាគឺជាដើមឈើដែលដុះចេញពីបាតនរកជើហ៊ីម។

طَلۡعُهَا كَأَنَّهُۥ رُءُوسُ ٱلشَّيَٰطِينِ ﴿٦٥﴾

៦៥-ផ្លែរបស់វាហាក់បីដូចជាក្បាលពួកស្ហៃតន។

فَإِنَّهُمۡ لَأٓكِلُونَ مِنۡهَا فَمَالِـُٔونَ مِنۡهَا ٱلۡبُطُونَ ﴿٦٦﴾

៦៦-ដូច្នេះ ពិតប្រាកដណាស់ពួកគេគឺត្រូវបរិភោគអំពីដើមឈើនោះ ហើយពោះរបស់ពួកគេពេញទៅដោយវា។

ثُمَّ إِنَّ لَهُمۡ عَلَيۡهَا لَشَوۡبٗا مِّنۡ حَمِيمٖ ﴿٦٧﴾

៦៧-បន្ទាប់មក ពិតប្រាកដណាស់ ពួកគេនឹងត្រូវផឹកទឹកក្ដៅបំផុតលាយជាមួយវា។

ثُمَّ إِنَّ مَرۡجِعَهُمۡ لَإِلَى ٱلۡجَحِيمِ ﴿٦٨﴾

៦៨-ក្រោយមក ពិតប្រាកដណាស់កន្លែងវិលត្រឡប់របស់ពួកគេគឺឆ្ពោះទៅកាន់នរកជើហ៊ីម។

إِنَّهُمۡ أَلۡفَوۡاْ ءَابَآءَهُمۡ ضَآلِّينَ ﴿٦٩﴾

៦៩-ពិតប្រាកដណាស់ ពួកគេបានប្រទះឃើញជីដូនជីតារបស់ពួកគេវង្វេង។

فَهُمۡ عَلَىٰٓ ءَاثَٰرِهِمۡ يُهۡرَعُونَ ﴿٧٠﴾

៧០-រួចពួកគេប្រញាប់ប្រញាល់អនុវត្តតាមគំរូរបស់(ជីដូនជីតា)ពួកគេ។

وَلَقَدۡ ضَلَّ قَبۡلَهُمۡ أَكۡثَرُ ٱلۡأَوَّلِينَ ﴿٧١﴾

៧១-ហើយជាការពិតណាស់ ពួកជំនាន់មុនភាគច្រើនបានវង្វេងមុនពួកគេទៅទៀត។

وَلَقَدۡ أَرۡسَلۡنَا فِيهِم مُّنذِرِينَ ﴿٧٢﴾

៧២-ហើយជាការពិតណាស់ យើងបានចាត់តាំងក្នុងចំណោមពួកគេ(ពួកជំនាន់មុន)នូវអ្នកដាស់តឿនព្រមានជាច្រើន។

فَٱنظُرۡ كَيۡفَ كَانَ عَٰقِبَةُ ٱلۡمُنذَرِينَ ﴿٧٣﴾

៧៣-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)មើលចុះ តើលទ្ធផលចុងក្រោយរបស់អ្នកដែលត្រូវគេដាស់តឿនព្រមានទាំងនោះយ៉ាងដូចម្ដេច?

إِلَّا عِبَادَ ٱللَّهِ ٱلۡمُخۡلَصِينَ ﴿٧٤﴾

៧៤-លើកលែងតែបណ្ដាខ្ញុំរបស់អល់ឡោះដែលមានចិត្តបរិសុទ្ធប៉ុណ្ណោះ។

وَلَقَدْ نَادَىٰنَا نُوحٌ فَلَنِعْمَ ٱلْمُجِيبُونَ ﴿٧٥﴾

៧៥-ហើយជាការពិតណាស់ នូហបានបួងសួងសុំពីយើង ពេលនោះយើងគឺជាអ្នកផ្តល់ចម្លើយដ៏ប្រសើរបំផុត ។

وَنَجَّيْنَـٰهُ وَأَهْلَهُۥ مِنَ ٱلْكَرْبِ ٱلْعَظِيمِ ﴿٧٦﴾

៧៦-ហើយយើងបានសង្គ្រោះគេ និងក្រុមគ្រួសាររបស់គេពីគ្រោះមហន្តរាយ(ទឹកជំនន់)ដ៏ធ្ងន់ធ្ងរ ។

وَجَعَلْنَا ذُرِّيَّتَهُۥ هُمُ ٱلْبَاقِينَ ﴿٧٧﴾

៧៧-ហើយយើងបានធ្វើឱ្យកូនចៅរបស់គេជាពួកដែលនៅរស់រានមានជីវិត ។

وَتَرَكْنَا عَلَيْهِ فِى ٱلْـَٔاخِرِينَ ﴿٧٨﴾

៧៨-ហើយយើងបានបន្សល់ទុករឿងរបស់គេ(ជាការរំលឹកដ៏ល្អ)ដល់អ្នកជំនាន់ក្រោយ ។

سَلَـٰمٌ عَلَىٰ نُوحٍ فِى ٱلْعَـٰلَمِينَ ﴿٧٩﴾

៧៩-សុខសន្តិភាពកើតមានដល់នូហនៅលើពិភពទាំងអស់ ។

إِنَّا كَذَٰلِكَ نَجْزِى ٱلْمُحْسِنِينَ ﴿٨٠﴾

៨០-ពិតប្រាកដណាស់ យើងក៏បានតបស្នងដូច្នោះដែរចំពោះអ្នកដែលសាងអំពើល្អ ។

إِنَّهُۥ مِنْ عِبَادِنَا ٱلْمُؤْمِنِينَ ﴿٨١﴾

៨១-ពិតប្រាកដណាស់ គេ(នូហ)ស្ថិតក្នុងចំណោមខ្ញុំរបស់យើងដែលមានជំនឿ ។

ثُمَّ أَغْرَقْنَا ٱلْـَٔاخَرِينَ ﴿٨٢﴾

៨២-ក្រោយមក យើងក៏បានពន្លិចពួកដទៃទៀត ។

۞ وَإِنَّ مِن شِيعَتِهِۦ لَإِبْرَٰهِيمَ ﴿٨٣﴾

៨៣-ហើយពិតប្រាកដណាស់ ក្នុងចំណោមអ្នកដែលតាមមាគ៌ារបស់នូហគឺអ៊ីព្រហ៊ីម ។

إِذْ جَآءَ رَبَّهُۥ بِقَلْبٍ سَلِيمٍ ﴿٨٤﴾

៨៤-(ចូរចងចាំ)នៅពេលដែលគេ(អ៊ីព្រហ៊ីម)បានមកជួបម្ចាស់របស់គេដោយចិត្តបរិសុទ្ធ ។

إِذْ قَالَ لِأَبِيهِ وَقَوْمِهِۦ مَاذَا تَعْبُدُونَ ﴿٨٥﴾

៨៥-(ចូរចងចាំ)នៅពេលដែលគេបានពោលទៅកាន់ឪពុករបស់គេនិងក្រុមរបស់គេថា: តើពួកអ្នកកំពុងតែគោរពសក្ការៈអ្វី?

أَئِفْكًا ءَالِهَةً دُونَ ٱللَّهِ تُرِيدُونَ ﴿٨٦﴾

៨៦-តើពួកអ្នកចង់គោរពសក្ការៈម្ចាស់ផ្សេងពីអល់ឡោះ ដើម្បីប្រឌិតភូតកុហកឬ?

فَمَا ظَنُّكُم بِرَبِّ ٱلْعَـٰلَمِينَ ﴿٨٧﴾

៨៧-ដូច្នេះ តើពួកអ្នកគិតអ្វីចំពោះម្ចាស់គ្រប់គ្រងពិភពទាំងអស់?

فَنَظَرَ نَظْرَةً فِى ٱلنُّجُومِ ﴿٨٨﴾

៨៨-រួចមកគេ(អ៊ីព្រហ៊ីម)បានសម្លឹងមើលទៅហ្វូងផ្កាយមួយស្របក់ ។

فَقَالَ إِنِّي سَقِيمٞ ﴿٨٩﴾

៨៩-ហើយគេក៏បានពោលថា: ពិតប្រាកដណាស់ខ្ញុំឈឺ ។

فَتَوَلَّوۡاْ عَنۡهُ مُدۡبِرِينَ ﴿٩٠﴾

៩០-ពេលនោះ ពួកគេក៏បានបែរខ្នងចាកចេញពីគេ ។

فَرَاغَ إِلَىٰٓ ءَالِهَتِهِمۡ فَقَالَ أَلَا تَأۡكُلُونَ ﴿٩١﴾

៩១-បន្ទាប់មកគេដើរសំដៅទៅរកព្រះនានារបស់ពួកគេ ហើយបានពោលថា: តើពួកឯងមិនបរិភោគទេឬ?

مَا لَكُمۡ لَا تَنطِقُونَ ﴿٩٢﴾

៩២-ហេតុអ្វីបានជាពួកឯងមិននិយាយ?

فَرَاغَ عَلَيۡهِمۡ ضَرۡبَۢا بِٱلۡيَمِينِ ﴿٩٣﴾

៩៣-ហើយគេក៏ដើរទៅជិតពួកវា(ព្រះនានា) ដោយវាយនឹងដៃស្តាំរបស់គេ(យ៉ាងខ្លាំង) ។

فَأَقۡبَلُوٓاْ إِلَيۡهِ يَزِفُّونَ ﴿٩٤﴾

៩៤-ពេលនោះ ពួកគេបានដើរសំដៅទៅរកគេយ៉ាងរហ័ស ។

قَالَ أَتَعۡبُدُونَ مَا تَنۡحِتُونَ ﴿٩٥﴾

៩៥-គេបានពោលថា: តើពួកអ្នកគោរពសក្ការៈនូវអ្វីដែលពួកអ្នកឆ្លាក់

وَٱللَّهُ خَلَقَكُمۡ وَمَا تَعۡمَلُونَ ﴿٩٦﴾

៩៦-ខណៈដែលអល់ឡោះបានបង្កើតពួកអ្នកនិងអ្វីដែលពួកអ្នកកំពុងធ្វើនោះឬ?

قَالُواْ ٱبۡنُواْ لَهُۥ بُنۡيَٰنٗا فَأَلۡقُوهُ فِي ٱلۡجَحِيمِ ﴿٩٧﴾

៩៧-ពួកគេបាននិយាយគ្នាថា: ចូរពួកអ្នកសង់សំណង់មួយសម្រាប់គេ(ដោយដុតភ្លើងក្នុងនោះ) ហើយបោះគេចូលទៅក្នុងភ្លើងដ៏ក្តៅនោះចុះ ។

فَأَرَادُواْ بِهِۦ كَيۡدٗا فَجَعَلۡنَٰهُمُ ٱلۡأَسۡفَلِينَ ﴿٩٨﴾

៩៨-ដូច្នោះ ពួកគេមានបំណងរៀបចំគំរោងអាក្រក់ចំពោះគេ តែយើងក៏បានធ្វើឱ្យពួកគេទាបថោក ។

وَقَالَ إِنِّي ذَاهِبٌ إِلَىٰ رَبِّي سَيَهۡدِينِ ﴿٩٩﴾

៩៩-ហើយគេក៏បានពោលថា: ពិតប្រាកដណាស់ ខ្ញុំនឹងទៅកាន់ម្ចាស់របស់ខ្ញុំដែលទ្រង់នឹងចង្អុលបង្ហាញខ្ញុំ ។

رَبِّ هَبۡ لِي مِنَ ٱلصَّٰلِحِينَ ﴿١٠٠﴾

១០០-ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាប្រទានឱ្យខ្ញុំ(នូវកូនប្រុស)ដែលស្ថិតក្នុងចំណោមអ្នកដែលសាងអំពើល្អត្រឹមត្រូវផង ។

فَبَشَّرۡنَٰهُ بِغُلَٰمٍ حَلِيمٖ ﴿١٠١﴾

១០១-ហើយយើងបានផ្តល់ដំណឹងរីករាយដល់គេអំពីកូនប្រុសម្នាក់ដែលអត់ធ្មត់បំផុត(អ៊ីស្មាអ៊ីល) ។

فَلَمَّا بَلَغَ مَعَهُ ٱلسَّعۡيَ قَالَ يَٰبُنَيَّ إِنِّيٓ أَرَىٰ فِي
ٱلۡمَنَامِ أَنِّيٓ أَذۡبَحُكَ فَٱنظُرۡ مَاذَا تَرَىٰۚ قَالَ

១០២-ហើយនៅពេលដែលគេ(អ៊ីស្មាអ៊ីល) គ្រប់អាយុអាចដើរជាមួយគាត់បាននោះ គាត់បានពោលថា: ឱកូនសម្លាញ់! ពិត

ប្រាកដណាស់ យើងបានសុបិនឃើញថា យើងពិតជាត្រូវសំឡេះឯង។ ដូច្នេះ ចូរឯងពិចារណាមើលចុះ តើឯងយល់ឃើញយ៉ាងដូចម្តេច? អ៊ីស្មាអ៊ីលបានឆ្លើយថា: ឱឪពុកជាទីស្រឡាញ់របស់ខ្ញុំ! សូមលោកឪពុកអនុវត្តតាមអ្វីដែលគេបានបញ្ជាចុះ។ ប្រសិនបើអល់ឡោះមានចេតនា លោកឪពុកនឹងឃើញខ្ញុំស្ថិតក្នុងចំណោមអ្នកដែលអត់ធ្មត់ជាមិនខាន។

يَٰٓأَبَتِ ٱفْعَلْ مَا تُؤْمَرُ ۖ سَتَجِدُنِىٓ إِن شَآءَ ٱللَّهُ مِنَ ٱلصَّٰبِرِينَ ﴿١٠٢﴾

១០៣-ហើយនៅពេលដែលគេទាំងពីរបានយល់ព្រម(ធ្វើតាមបទបញ្ជាអល់ឡោះ) រួចគាត់ក៏បានផ្តេកអ៊ីស្មាអ៊ីលផ្កាប់មុខទៅលើដី(ដើម្បីសំឡេះ)។

فَلَمَّآ أَسْلَمَا وَتَلَّهُۥ لِلْجَبِينِ ﴿١٠٣﴾

១០៤-ពេលនោះយើងបានហៅគេថា: ឱអ៊ីព្រហ៊ីម!

وَنَٰدَيْنَٰهُ أَن يَٰٓإِبْرَٰهِيمُ ﴿١٠٤﴾

១០៥-អ្នកពិតជាបានបំពេញតាមសុបិន(របស់អ្នក)ហើយ។ ពិតប្រាកដណាស់ យើងក៏តបស្នងដូច្នោះដែរ ចំពោះអ្នកដែលសាងអំពើល្អ។

قَدْ صَدَّقْتَ ٱلرُّءْيَآ ۚ إِنَّا كَذَٰلِكَ نَجْزِى ٱلْمُحْسِنِينَ ﴿١٠٥﴾

១០៦-ពិតប្រាកដណាស់ នេះគឺជាការសាកល្បងមួយយ៉ាងច្បាស់លាស់។

إِنَّ هَٰذَا لَهُوَ ٱلْبَلَٰٓؤُا۟ ٱلْمُبِينُ ﴿١٠٦﴾

១០៧-ហើយយើងបានសង្គ្រោះគេ(អ៊ីស្មាអ៊ីល)ដោយប្តូរនឹងការសំឡេះសត្វមួយដ៏ធំ។

وَفَدَيْنَٰهُ بِذِبْحٍ عَظِيمٍ ﴿١٠٧﴾

១០៨-ហើយយើងបន្សល់ទុករឿងរបស់គេ(ជាការរំលឹកដ៏ល្អ) ដល់អ្នកជំនាន់ក្រោយ។

وَتَرَكْنَا عَلَيْهِ فِى ٱلْءَاخِرِينَ ﴿١٠٨﴾

១០៩-សូមសុខសន្តិភាពកើតមានដល់អ៊ីព្រហ៊ីម។

سَلَٰمٌ عَلَىٰٓ إِبْرَٰهِيمَ ﴿١٠٩﴾

១១០-ដូច្នោះដែរ យើងតបស្នងចំពោះអ្នកដែលសាងអំពើល្អ។

كَذَٰلِكَ نَجْزِى ٱلْمُحْسِنِينَ ﴿١١٠﴾

១១១-ពិតប្រាកដណាស់ គេ(អ៊ីព្រហ៊ីម)ស្ថិតក្នុងចំណោមខ្ញុំរបស់យើងដែលមានជំនឿ។

إِنَّهُۥ مِنْ عِبَادِنَا ٱلْمُؤْمِنِينَ ﴿١١١﴾

១១២-ហើយយើងបានផ្តល់ដំណឹងរីករាយដល់គេនូវអ៊ីសហាកជាណាពីម្នាក់ដែលស្ថិតក្នុងចំណោមអ្នកដែលសាងអំពើល្អត្រឹមត្រូវ។

وَبَشَّرْنَٰهُ بِإِسْحَٰقَ نَبِيًّا مِّنَ ٱلصَّٰلِحِينَ ﴿١١٢﴾

១១៣-ហើយយើងបានប្រទានពរជ័យទៅដល់គេ និង

وَبَٰرَكْنَا عَلَيْهِ وَعَلَىٰٓ إِسْحَٰقَ ۚ وَمِن ذُرِّيَّتِهِمَا

مُحۡسِنٞ وَظَالِمٞ لِّنَفۡسِهِۦ مُبِينٞ ١١٣

អ៊ីសហាក ។ ហើយក្នុងចំណោមកូនចៅរបស់គេទាំងពីរមានអ្នកដែលល្អត្រឹមត្រូវ និងអ្នកដែលបំពានលើខ្លួនឯងដ៏ច្បាស់លាស់ ។

وَلَقَدۡ مَنَنَّا عَلَىٰ مُوسَىٰ وَهَٰرُونَ ١١٤

១១៤-ហើយជាការពិតណាស់ យើងបានប្រទាននៀកម៉ាត់ទៅលើមូសានិងហារ៉ូន ។

وَنَجَّيۡنَٰهُمَا وَقَوۡمَهُمَا مِنَ ٱلۡكَرۡبِ ٱلۡعَظِيمِ ١١٥

១១៥-ហើយយើងបានសង្គ្រោះគេទាំងពីរ និងក្រុមរបស់គេទាំងពីរឱ្យរួចផុតពីគ្រោះមហន្តរាយដ៏ធ្ងន់ធ្ងរ ។

وَنَصَرۡنَٰهُمۡ فَكَانُواْ هُمُ ٱلۡغَٰلِبِينَ ١١٦

១១៦-ហើយយើងបានជួយពួកគេ ហើយពួកគេក៏បានក្លាយជាពួកដែលមានជ័យជំនះ ។

وَءَاتَيۡنَٰهُمَا ٱلۡكِتَٰبَ ٱلۡمُسۡتَبِينَ ١١٧

១១៧-ហើយយើងបានផ្តល់ឱ្យគេទាំងពីរនូវគម្ពីរដ៏ច្បាស់លាស់ ។

وَهَدَيۡنَٰهُمَا ٱلصِّرَٰطَ ٱلۡمُسۡتَقِيمَ ١١٨

១១៨-ហើយយើងចង្អុលបង្ហាញដល់គេទាំងពីរនូវមាគ៌ាដ៏ត្រឹមត្រូវ ។

وَتَرَكۡنَا عَلَيۡهِمَا فِي ٱلۡأٓخِرِينَ ١١٩

១១៩-ហើយយើងបន្សល់ទុករឿងរបស់គេទាំងពីរ( ជាការរំលឹកដ៏ល្អ) ដល់អ្នកជំនាន់ក្រោយ ។

سَلَٰمٌ عَلَىٰ مُوسَىٰ وَهَٰرُونَ ١٢٠

១២០-សូមសុខសន្តិភាពកើតមានចំពោះមូសា និងហារូន ។

إِنَّا كَذَٰلِكَ نَجۡزِي ٱلۡمُحۡسِنِينَ ١٢١

១២១-ពិតប្រាកដណាស់ យើងក៏តបស្នងដូច្នោះដែរចំពោះអ្នកដែលសាងអំពើល្អ ។

إِنَّهُمَا مِنۡ عِبَادِنَا ٱلۡمُؤۡمِنِينَ ١٢٢

១២២-ពិតប្រាកដណាស់ គេទាំងពីរគឺស្ថិតក្នុងចំណោមខ្ញុំរបស់យើងដែលមានជំនឿ ។

وَإِنَّ إِلۡيَاسَ لَمِنَ ٱلۡمُرۡسَلِينَ ١٢٣

១២៣-ហើយពិតប្រាកដណាស់ អ៊ិលយ៉ាសគឺជាអ្នកនាំសារម្នាក់ក្នុងចំណោមអ្នកនាំសារទាំងឡាយ ។

إِذۡ قَالَ لِقَوۡمِهِۦٓ أَلَا تَتَّقُونَ ١٢٤

១២៤-( ចូរចងចាំ) នៅពេលដែលគេបានពោលទៅកាន់ក្រុមរបស់គេ( អំបូរអ៊ីស្រាអែល) ថា: តើពួកអ្នកមិនកោតខ្លាចអល់ឡោះទេឬ?

أَتَدۡعُونَ بَعۡلٗا وَتَذَرُونَ أَحۡسَنَ

១២៥-តើពួកអ្នកគោរពសក្ការៈចំពោះរូបសំណាកហ្កាកឡាន់ ហើយពួកអ្នកបោះបង់ចោល( ការគោរពសក្ការៈ) អ្នកដែលបង្កើត

ٱلۡخَٰلِقِينَ ١٢٥

ដ៏ប្រសើរជាងគេ

ٱللَّهَ رَبَّكُمۡ وَرَبَّ ءَابَآئِكُمُ ٱلۡأَوَّلِينَ ١٢٦

១២៦-ខណៈដែលអល់ឡោះ គឺជាម្ចាស់របស់ពួកអ្នក និងជាម្ចាស់របស់ជីដូនជីតាជំនាន់មុនរបស់ពួកអ្នកនោះ?

فَكَذَّبُوهُ فَإِنَّهُمۡ لَمُحۡضَرُونَ ١٢٧

១២៧-តែពួកគេបែរជាបានបដិសេធនឹងគេ(អ៊ីលយ៉ាស)ទៅវិញ។ ដូច្នេះ ពិតប្រាកដណាស់ពួកគេនឹងត្រូវគេប្រមូលផ្ដុំ(ធ្វើទារុណកម្ម)

إِلَّا عِبَادَ ٱللَّهِ ٱلۡمُخۡلَصِينَ ١٢٨

១២៨-លើកលែងតែបណ្ដាខ្ញុំរបស់អល់ឡោះដែលមានចិត្តស្មោះត្រង់ប៉ុណ្ណោះ។

وَتَرَكۡنَا عَلَيۡهِ فِي ٱلۡأٓخِرِينَ ١٢٩

១២៩- ហើយយើងបន្សល់ទុករឿងរបស់គេ(ជាការរំលឹកដ៏ល្អ)ដល់អ្នកជំនាន់ក្រោយ។

سَلَٰمٌ عَلَىٰٓ إِلۡ يَاسِينَ ١٣٠

១៣០-សូមសុខសន្តិភាពកើតមានចំពោះអ៊ីលយ៉ាស៊ីន។

إِنَّا كَذَٰلِكَ نَجۡزِي ٱلۡمُحۡسِنِينَ ١٣١

១៣១-ពិតប្រាកដណាស់ យើងក៏តបស្នងដូច្នោះដែរចំពោះអ្នកដែលសាងអំពើល្អ។

إِنَّهُۥ مِنۡ عِبَادِنَا ٱلۡمُؤۡمِنِينَ ١٣٢

១៣២-ពិតប្រាកដណាស់ គេគឺស្ថិតក្នុងចំណោមខ្ញុំរបស់យើងដែលមានជំនឿ។

وَإِنَّ لُوطٗا لَّمِنَ ٱلۡمُرۡسَلِينَ ١٣٣

១៣៣-ហើយពិតប្រាកដណាស់ លូតគឺជាអ្នកនាំសារម្នាក់ក្នុងចំណោមអ្នកនាំសារទាំងឡាយ។

إِذۡ نَجَّيۡنَٰهُ وَأَهۡلَهُۥٓ أَجۡمَعِينَ ١٣٤

១៣៤-(ចូរចងចាំ)នៅពេលដែលយើងបានសង្គ្រោះគេនិងក្រុមគ្រួសាររបស់គេទាំងអស់គ្នា

إِلَّا عَجُوزٗا فِي ٱلۡغَٰبِرِينَ ١٣٥

១៣៥-លើកលែងតែស្ត្រីជរាម្នាក់(ប្រពន្ធរបស់គេ)ប៉ុណ្ណោះដែលស្ថិតក្នុងចំណោមអ្នកដែលត្រូវទារុណកម្ម។

ثُمَّ دَمَّرۡنَا ٱلۡأٓخَرِينَ ١٣٦

១៣៦-បន្ទាប់មក យើងបានបំផ្លាញអ្នកដទៃទៀត។

وَإِنَّكُمۡ لَتَمُرُّونَ عَلَيۡهِم مُّصۡبِحِينَ ١٣٧

១៣៧-ហើយពិតប្រាកដណាស់ ពួកអ្នកធ្វើដំណើរឆ្លងកាត់(ភូមិស្រុក)ពួកគេជារៀងរាល់ព្រឹក

وَبِٱلَّيۡلِۚ أَفَلَا تَعۡقِلُونَ ١٣٨

១៣៨-និងពេលយប់។ ដូច្នេះ តើពួកអ្នកមិនគិតពិចារណាទេឬ?

وَإِنَّ يُونُسَ لَمِنَ ٱلۡمُرۡسَلِينَ ١٣٩

១៣៩-ហើយពិតប្រាកដណាស់ យូនូសគឺជាអ្នកនាំសារម្នាក់ក្នុងចំណោមអ្នកនាំសារទាំងឡាយ ។

إِذۡ أَبَقَ إِلَى ٱلۡفُلۡكِ ٱلۡمَشۡحُونِ ١٤٠

១៤០-(ចូរចងចាំ) នៅពេលដែលគេបានរត់គេចចូលទៅក្នុងសំពៅដែលពេញដោយបន្ទុក ។

فَسَاهَمَ فَكَانَ مِنَ ٱلۡمُدۡحَضِينَ ١٤١

១៤១-ក្រោយមកគេបានផ្សងសំណាង ពេលនោះគេក៏ស្ថិតក្នុងចំណោមអ្នកដែលចាញ់ក្នុងការផ្សងសំណាង( ដោយត្រូវគេបោះចូលទៅក្នុងសមុទ្រ) ។

فَٱلۡتَقَمَهُ ٱلۡحُوتُ وَهُوَ مُلِيمٞ ١٤٢

១៤២-រួចមកត្រីដ៏ធំមួយបានលេបគេ ខណៈដែលគេគឺជាអ្នកដែលត្រូវគេស្តីបន្ទោស ។

فَلَوۡلَآ أَنَّهُۥ كَانَ مِنَ ٱلۡمُسَبِّحِينَ ١٤٣

១៤៣-ដូច្នេះ ពិតប្រាកដណាស់ប្រសិនបើគេមិនមែនជាអ្នកដែលស្ថិតក្នុងចំណោមអ្នកដែលសរសើរលើកតម្កើងយើងទេនោះ

لَلَبِثَ فِي بَطۡنِهِۦٓ إِلَىٰ يَوۡمِ يُبۡعَثُونَ ١٤٤

១៤៤-គេប្រាកដជាស្ថិតនៅក្នុងពោះត្រីដ៏ធំនោះ រហូតដល់ថ្ងៃដែលគេធ្វើឱ្យរស់ចេញពីផ្នូរឡើងវិញ( ថ្ងៃបរលោក) ។

۞ فَنَبَذۡنَٰهُ بِٱلۡعَرَآءِ وَهُوَ سَقِيمٞ ١٤٥

១៤៥-ហើយយើងបានបោះគេទៅលើដីវាល ដែលគ្មានអ្វីសោះ ហើយគេស្ថិតក្នុងភាពមានជម្ងឺ ។

وَأَنۢبَتۡنَا عَلَيۡهِ شَجَرَةٗ مِّن يَقۡطِينٖ ١٤٦

១៤៦-ហើយយើងបានបណ្ដុះដើមរុក្ខជាតិមួយដើមជាប្រភេទដើមល្ពៅ( ជាម្លប់) សម្រាប់គេ ។

وَأَرۡسَلۡنَٰهُ إِلَىٰ مِاْئَةِ أَلۡفٍ أَوۡ يَزِيدُونَ ١٤٧

១៤៧-ហើយយើងបានបញ្ជូនគេទៅកាន់ក្រុមមនុស្សដែលមានចំនួនមួយរយពាន់នាក់ ឬច្រើនជាងនេះ ។

فَـَٔامَنُواْ فَمَتَّعۡنَٰهُمۡ إِلَىٰ حِينٖ ١٤٨

១៤៨-ក្រោយមក ពួកគេមានជំនឿ រួចយើងបានឱ្យពួកគេសោយសុខ( ក្នុងការរស់នៅ) រហូតដល់ពេលកំណត់ ។

فَٱسۡتَفۡتِهِمۡ أَلِرَبِّكَ ٱلۡبَنَاتُ وَلَهُمُ ٱلۡبَنُونَ ١٤٩

១៤៩-ដូច្នេះ ចូរអ្នក( មូហាំម៉ាត់) សួរពួកគេ( អារ៉ាប់ម៉ាក្កះ) ថាៈ តើកូនស្រីសម្រាប់ម្ចាស់របស់អ្នក ហើយកូនប្រុសសម្រាប់ពួកគេឬ?

أَمۡ خَلَقۡنَا ٱلۡمَلَٰٓئِكَةَ إِنَٰثٗا وَهُمۡ شَٰهِدُونَ ١٥٠

១៥០-ឬមួយយើងបានបង្កើតម៉ាឡាអ៊ីកាត់ជាភេទស្រី ដោយពួកគេមើលឃើញ( ថាដូច្នោះ) ឬ?

١٥١ أَلَآ إِنَّهُم مِّنۡ إِفۡكِهِمۡ لَيَقُولُونَ ١٥١

១៥១-ចូរដឹងថា ពិតប្រាកដណាស់ ក្នុងចំណោមពាក្យសំដីប្រឌិតភូតកុហករបស់ពួកគេ គឺពួកគេនិយាយថា:

وَلَدَ ٱللَّهُ وَإِنَّهُمۡ لَكَٰذِبُونَ ١٥٢

១៥២-អល់ឡោះបានបង្កើតកូន។ ហើយពិតប្រាកដណាស់ ពួកគេគឺជាពួកដែលភូតកុហក។

أَصۡطَفَى ٱلۡبَنَاتِ عَلَى ٱلۡبَنِينَ ١٥٣

១៥៣-តើហេតុអ្វីបានជាទ្រង់ជ្រើសរើសយកកូនស្រី(លើកតម្កើង)ជាងកូនប្រុសទៅវិញ?

مَا لَكُمۡ كَيۡفَ تَحۡكُمُونَ ١٥٤

១៥៤-តើមានអ្វីកើតឡើងចំពោះពួកអ្នកបានជាពួកអ្នកសន្និដ្ឋានបែបនេះ?

أَفَلَا تَذَكَّرُونَ ١٥٥

១៥៥-ដូច្នេះ តើពួកអ្នកមិនពិចារណាទេឬ?

أَمۡ لَكُمۡ سُلۡطَٰنٞ مُّبِينٞ ١٥٦

១៥៦-ឬមួយពួកអ្នកមានភស្តុតាងបញ្ជាក់ច្បាស់លាស់?

فَأۡتُواْ بِكِتَٰبِكُمۡ إِن كُنتُمۡ صَٰدِقِينَ ١٥٧

១៥៧-ដូច្នេះ ចូរពួកអ្នកនាំគម្ពីររបស់ពួកអ្នកមក ប្រសិនបើពួកអ្នកជាអ្នកដែលនិយាយពិតមែននោះ។

وَجَعَلُواْ بَيۡنَهُۥ وَبَيۡنَ ٱلۡجِنَّةِ نَسَبٗاۚ وَلَقَدۡ عَلِمَتِ ٱلۡجِنَّةُ إِنَّهُمۡ لَمُحۡضَرُونَ ١٥٨

១៥៨-ហើយពួកគេ(មូស្ហរីគីន)បានចាត់ទុករវាងទ្រង់ និងជិនជាសាច់ញាតិនឹងគ្នា។ ហើយជាការពិតណាស់ ជិនបានដឹងថា: ពួកគេពិតជានឹងត្រូវគេប្រមូលផ្តុំ(នៅថ្ងៃបរលោក)។

سُبۡحَٰنَ ٱللَّهِ عَمَّا يَصِفُونَ ١٥٩

១៥៩-អល់ឡោះមហាស្អាតស្អំអំពីអ្វីដែលពួកគេនិយាយប្រឌិតភូតកុហក។

إِلَّا عِبَادَ ٱللَّهِ ٱلۡمُخۡلَصِينَ ١٦٠

១៦០-លើកលែងតែបណ្តាខ្ញុំរបស់អល់ឡោះដែលមានចិត្តស្មោះត្រង់ប៉ុណ្ណោះ។

فَإِنَّكُمۡ وَمَا تَعۡبُدُونَ ١٦١

១៦១-ព្រោះពិតប្រាកដណាស់ ពួកអ្នកនិងអ្វីដែលពួកអ្នកគោរពសក្ការៈ

مَآ أَنتُمۡ عَلَيۡهِ بِفَٰتِنِينَ ١٦٢

១៦២-គឺពួកអ្នកមិនមែនជាអ្នកដែលអាចធ្វើឱ្យនរណាម្នាក់វង្វេងបានឡើយ។

إِلَّا مَنۡ هُوَ صَالِ ٱلۡجَحِيمِ ١٦٣

១៦៣-លើកលែងតែអ្នកណាដែលជាអ្នកចូលនរកជើហ៊ីមប៉ុណ្ណោះ។

وَمَا مِنَّآ إِلَّا لَهُۥ مَقَامٞ مَّعۡلُومٞ ١٦٤

១៦៤-ហើយ(ម៉ាឡាអ៊ីកាត់បានពោលថា)គ្មានអ្នកណាម្នាក់

ក្នុងចំណោមពួកយើង លើកលែងតែគេមានកន្លែងដែលគេកំណត់រួចជាស្រេចប៉ុណ្ណោះ ។

وَإِنَّا لَنَحۡنُ ٱلصَّآفُّونَ ﴿١٦٥﴾

១៦៥-ហើយពិតប្រាកដណាស់ ពួកយើងគឺជាអ្នកដែលឈរជាជួរៗ(ក្នុងការគោរពសក្ការៈចំពោះអល់ឡោះ) ។

وَإِنَّا لَنَحۡنُ ٱلۡمُسَبِّحُونَ ﴿١٦٦﴾

១៦៦-ហើយពិតប្រាកដណាស់ ពួកយើងគឺជាអ្នកដែលសរសើរលើកតម្កើងអល់ឡោះ ។

وَإِن كَانُواْ لَيَقُولُونَ ﴿١٦٧﴾

១៦៧-ហើយពិតប្រាកដណាស់ ពួកគេ(ពួកមូស្ហ្គរីគីន) ធ្លាប់បាននិយាយថាៈ

لَوۡ أَنَّ عِندَنَا ذِكۡرٗا مِّنَ ٱلۡأَوَّلِينَ ﴿١٦٨﴾

១៦៨-ពិតប្រាកដណាស់ ប្រសិនបើពួកយើងមានគម្ពីរដូចពួកជំនាន់មុនមាននោះ

لَكُنَّا عِبَادَ ٱللَّهِ ٱلۡمُخۡلَصِينَ ﴿١٦٩﴾

១៦៩-ពួកយើងពិតជានឹងក្លាយជាខ្ញុំរបស់អល់ឡោះដែលមានចិត្តស្មោះត្រង់មិនខាន ។

فَكَفَرُواْ بِهِۦۖ فَسَوۡفَ يَعۡلَمُونَ ﴿١٧٠﴾

១៧០-តែ(នៅពេលដែលគេបានបញ្ចុះគម្ពីរគួរអានមក) ពួកគេបែរជាបានបដិសេធនឹងវាទៅវិញ ។ ដូច្នេះ ពួកគេគង់តែនឹងដឹង ។

وَلَقَدۡ سَبَقَتۡ كَلِمَتُنَا لِعِبَادِنَا ٱلۡمُرۡسَلِينَ ﴿١٧١﴾

១៧១-ហើយជាការពិតណាស់ ពាក្យសំដី(ការសន្យា)របស់យើងបានសម្រេចរួចជាស្រេចសម្រាប់បណ្ដាខ្ញុំរបស់យើងដែលជាអ្នកនាំសារ ។

إِنَّهُمۡ لَهُمُ ٱلۡمَنصُورُونَ ﴿١٧٢﴾

១៧២-ពិតប្រាកដណាស់ ពួកគេនឹងត្រូវគេជួយ ។

وَإِنَّ جُندَنَا لَهُمُ ٱلۡغَٰلِبُونَ ﴿١٧٣﴾

១៧៣-ហើយពិតប្រាកដណាស់ ទាហានរបស់យើងគឺជាអ្នកដែលទទួលបានជោគជ័យ ។

فَتَوَلَّ عَنۡهُمۡ حَتَّىٰ حِينٖ ﴿١٧٤﴾

១៧៤-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)បែរចេញពីពួកគេមួយរយៈពេល ។

وَأَبۡصِرۡهُمۡ فَسَوۡفَ يُبۡصِرُونَ ﴿١٧٥﴾

១៧៥-ហើយចូរអ្នកឱ្យពួកគេមើលចុះ ពួកគេគង់តែនឹងឃើញ(ទារុណកម្ម)ជាមិនខាន ។

أَفَبِعَذَابِنَا يَسۡتَعۡجِلُونَ ﴿١٧٦﴾

១៧៦-ដូច្នេះ តើពួកគេសុំឱ្យទារុណកម្មរបស់យើងធ្លាក់មកលើពួកគេភ្លាមៗឬ?

فَإِذَا نَزَلَ بِسَاحَتِهِمْ فَسَآءَ صَبَاحُ ٱلْمُنذَرِينَ ﴿١٧٧﴾

១៧៧-(ការវិនាស)នាពេលព្រឹករបស់ពួកដែលត្រូវគេព្រមាន នោះ គឺអាក្រក់បំផុត។

وَتَوَلَّ عَنْهُمْ حَتَّىٰ حِينٍ ﴿١٧٨﴾

១៧៨-ហើយចូរអ្នក(មូហាំម៉ាត់)បែរចេញពីពួកគេមួយរយៈពេលសិនចុះ។

وَأَبْصِرْ فَسَوْفَ يُبْصِرُونَ ﴿١٧٩﴾

១៧៩-ហើយចូរអ្នកឱ្យពួកគេមើលចុះ ពួកគេគង់តែនឹងឃើញ(ទារុណកម្ម)ជាមិនខាន។

سُبْحَـٰنَ رَبِّكَ رَبِّ ٱلْعِزَّةِ عَمَّا يَصِفُونَ ﴿١٨٠﴾

១៨០-ម្ចាស់របស់អ្នកមហាស្អាតស្អំ ជាម្ចាស់មហាខ្ពង់ខ្ពស់អំពីអ្វីដែលពួកគេនិយាយប្រឌិត។

وَسَلَـٰمٌ عَلَى ٱلْمُرْسَلِينَ ﴿١٨١﴾

១៨១-ហើយសូមសុខសន្តិភាពកើតមានដល់បណ្តាអ្នកនាំសារ។

وَٱلْحَمْدُ لِلَّهِ رَبِّ ٱلْعَـٰلَمِينَ ﴿١٨٢﴾

១៨២-ហើយរាល់ការសរសើរគឺចំពោះអល់ឡោះជាម្ចាស់គ្រប់គ្រងពិភពទាំងអស់។

## سورة ص

## ជំពូកសទ

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

صٓ ۚ وَٱلْقُرْءَانِ ذِى ٱلذِّكْرِ ﴿١﴾

១-សទ។ អល់ឡោះស្បថនឹងគម្ពីរគួរអានដែលពោរពេញដោយការរំលឹក។

بَلِ ٱلَّذِينَ كَفَرُوا۟ فِى عِزَّةٍ وَشِقَاقٍ ﴿٢﴾

២-ផ្ទុយទៅវិញ ពួកដែលគ្មានជំនឿស្ថិតក្នុងភាពក្រអឺតក្រទមនិងប្រឆាំង។

كَمْ أَهْلَكْنَا مِن قَبْلِهِم مِّن قَرْنٍ فَنَادَوا۟ وَّلَاتَ حِينَ مَنَاصٍ ﴿٣﴾

៣-យើងបានបំផ្លាញមុនពួកគេជាច្រើនជំនាន់មកហើយ ហើយពួកគេបានស្រែកសុំការអភ័យទោស ខណៈដែលពេលនោះមិនមែនជាពេលអាចគេចផុត(ពីទារុណកម្ម)បាននោះ។

وَعَجِبُوٓا۟ أَن جَآءَهُم مُّنذِرٌ مِّنْهُمْ ۖ وَقَالَ ٱلْكَـٰفِرُونَ هَـٰذَا سَـٰحِرٌ كَذَّابٌ ﴿٤﴾

៤-ក្រោយមកពួកគេងឿងឆ្ងល់ចំពោះការមកដល់របស់អ្នកដាស់តឿនព្រមាន(មូហាំម៉ាត់)ក្នុងចំណោមពួកគេបានមកដល់ពួកគេ។ ហើយពួកគ្មានជំនឿបាននិយាយថាៈ នេះគឺជាគ្រូមន្តអាគមដែលពូកែបោកប្រាស់បំផុត។

أَجَعَلَ ٱلْـَٔالِهَةَ إِلَـٰهًا وَٰحِدًا ۖ إِنَّ هَـٰذَا لَشَىْءٌ

៥-តើគេយកព្រះនានាធ្វើជាម្ចាស់តែមួយដើម្បីគោរពសក្ការៈ

عُجَابٌ ۝٥

ឬ? ពិតប្រាកដណាស់ នេះគឺជាប្រការមួយដែលចម្លែកបំផុត។

وَٱنطَلَقَ ٱلۡمَلَأُ مِنۡهُمۡ أَنِ ٱمۡشُواْ وَٱصۡبِرُواْ عَلَىٰٓ
ءَالِهَتِكُمۡۖ إِنَّ هَٰذَا لَشَيۡءٞ يُرَادُ ۝٦

៦-ហើយពួកមេដឹកនាំក្នុងចំណោមពួកគេក៏បានដើរចេញ (ដោយនិយាយថា) ចូរពួកអ្នកបន្ត និងអត់ធ្មត់ក្នុងការគោរពព្រះនានារបស់ពួកអ្នកចុះ។ ពិតប្រាកដណាស់ នេះគឺជាប្រការមួយដែលគេចង់បាន។

مَا سَمِعۡنَا بِهَٰذَا فِي ٱلۡمِلَّةِ ٱلۡأٓخِرَةِ إِنۡ هَٰذَآ إِلَّا
ٱخۡتِلَٰقٌ ۝٧

៧-យើងមិនធ្លាប់បានឮពីរឿងនេះឡើយនៅក្នុងសាសនាចុងក្រោយ(សាសនារបស់ពួកមូស្ហីរីគីន និងពួកណាស់រ៉នី)។ នេះគ្មានអ្វីក្រៅពីការប្រឌិតថ្មីនោះឡើយ។

أَءُنزِلَ عَلَيۡهِ ٱلذِّكۡرُ مِنۢ بَيۡنِنَاۚ بَلۡ هُمۡ
فِي شَكّٖ مِّن ذِكۡرِيۚ بَل لَّمَّا يَذُوقُواْ
عَذَابِ ۝٨

៨-តើគេបញ្ចុះគម្ពីរគួរអានឱ្យគេដោយរំលងពួកយើងឬ? ផ្ទុយទៅវិញ ពួកគេស្ថិតក្នុងភាពសង្ស័យពីគម្ពីរគួរអានរបស់យើង។ ផ្ទុយទៅវិញ ពួកគេមិនទាន់ភ្លក្សទារុណកម្មរបស់យើងឡើយ។

أَمۡ عِندَهُمۡ خَزَآئِنُ رَحۡمَةِ رَبِّكَ ٱلۡعَزِيزِ
ٱلۡوَهَّابِ ۝٩

៩-ឬមួយពួកគេមានឃ្លាំងលាភសក្ការៈនៃម្ចាស់របស់អ្នកដែលទ្រង់មហាខ្លាំងពូកែ មហាសប្បុរស?

أَمۡ لَهُم مُّلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَمَا
بَيۡنَهُمَاۖ فَلۡيَرۡتَقُواْ فِي ٱلۡأَسۡبَٰبِ ۝١٠

១០-ឬមួយពួកគេមានអំណាចគ្រប់គ្រងមេឃជាច្រើនជាន់និងផែនដី និងអ្វីៗដែលនៅចន្លោះវាទាំងពីរ? (ប្រសិនបើដូច្នោះមែន) ចូរឱ្យពួកគេរកវិធីឡើងទៅលើមេឃចុះ (ដើម្បីរារាំងម៉ាឡាអ៊ីកាត់កុំឱ្យបញ្ចុះវ៉ាហ៊ី)។

جُندٞ مَّا هُنَالِكَ مَهۡزُومٞ مِّنَ ٱلۡأَحۡزَابِ ۝١١

១១-ពួកគេជាកងទ័ពអំពីពួកអះហ្សាបដែលត្រូវទទួលបរាជ័យនៅទីនោះ។

كَذَّبَتۡ قَبۡلَهُمۡ قَوۡمُ نُوحٖ وَعَادٞ وَفِرۡعَوۡنُ ذُو
ٱلۡأَوۡتَادِ ۝١٢

១២-ក្រុមនួហ និងអាដ ហើយនិងហ្វៀរអោនដែលមានអំណាចខ្លាំងក្លាបានបដិសេធមុនពួកគេ។

وَثَمُودُ وَقَوۡمُ لُوطٖ وَأَصۡحَٰبُ لۡـَٔيۡكَةِۚ أُوْلَٰٓئِكَ
ٱلۡأَحۡزَابُ ۝١٣

១៣-ហើយសាមូដ និងក្រុមរបស់លូត និងពួកអៃកះ(ក៏បានបដិសេធដែរ)។ ពួកទាំងនោះ គឺជាក្រុមដែលប្រមូលគ្នាប្រឆាំងនឹងអ្នកនាំសារ។

إِن كُلٌّ إِلَّا كَذَّبَ ٱلرُّسُلَ فَحَقَّ عِقَابِ ﴿١٤﴾

១៤-ពួកគេទាំងអស់គឺសុទ្ធតែបានបដិសេធនឹងបណ្ដាអ្នកនាំសារ ដូច្នេះពួកគេក៏ទទួលរងទណ្ឌកម្មរបស់យើង ។

وَمَا يَنظُرُ هَٰٓؤُلَآءِ إِلَّا صَيۡحَةٗ وَٰحِدَةٗ مَّا لَهَا مِن فَوَاقٖ ﴿١٥﴾

១៥-ហើយពួកទាំងនោះមិនរង់ចាំអ្វីក្រៅពីសំម្រែកយ៉ាងខ្លាំងមួយដង ដោយវាមិនអាចវិលត្រឡប់មកវិញម្ដងទៀតឡើយ ។

وَقَالُواْ رَبَّنَا عَجِّل لَّنَا قِطَّنَا قَبۡلَ يَوۡمِ ٱلۡحِسَابِ ﴿١٦﴾

១៦-ហើយពួកគេបាននិយាយថាៈ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាប្រញាប់ផ្ដល់ចំណែក(ទារុណកម្ម)របស់ពួកយើង មុនថ្ងៃជំនុំជំរះផងចុះ ។

ٱصۡبِرۡ عَلَىٰ مَا يَقُولُونَ وَٱذۡكُرۡ عَبۡدَنَا دَاوُۥدَ ذَا ٱلۡأَيۡدِۖ إِنَّهُۥٓ أَوَّابٌ ﴿١٧﴾

១៧-ចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់ទៅលើអ្វីដែលពួកគេនិយាយ ហើយអ្នកត្រូវរំលឹកខ្ញុំរបស់យើងដាវូដដែលមានឋាមពលខ្លាំងក្លា ។ ពិតប្រាកដណាស់ គេជាអ្នកដែលតែងតែសារភាពកំហុសជានិច្ច ។

إِنَّا سَخَّرۡنَا ٱلۡجِبَالَ مَعَهُۥ يُسَبِّحۡنَ بِٱلۡعَشِيِّ وَٱلۡإِشۡرَاقِ ﴿١٨﴾

១៨-ពិតប្រាកដណាស់ យើងបានបញ្ជាឱ្យភ្នំទាំងឡាយលើកតម្កើងដោយសរសើរចំពោះយើងជាមួយនឹងគេទាំងល្ងាចទាំងព្រឹក ។

وَٱلطَّيۡرَ مَحۡشُورَةٗۖ كُلّٞ لَّهُۥٓ أَوَّابٞ ﴿١٩﴾

១៩-ហើយ(យើងក៏បានបញ្ជា)សត្វស្លាបទាំងអស់ឱ្យប្រមូលផ្ដុំគ្នាលើកតម្កើងដោយសរសើរចំពោះយើងជាមួយនឹងគេដែរ ។ ពួកវាទាំងអស់ស្ដាប់បង្គាប់គេ ។

وَشَدَدۡنَا مُلۡكَهُۥ وَءَاتَيۡنَٰهُ ٱلۡحِكۡمَةَ وَفَصۡلَ ٱلۡخِطَابِ ﴿٢٠﴾

២០-ហើយយើងបានពង្រឹងអំណាចរបស់គេ និងបានប្រទានឱ្យគេនូវភាពឈ្លាសវៃ ហើយនិងការវិនិច្ឆ័យយ៉ាងច្បាស់លាស់ក្នុងការដោះស្រាយទំនាស់ ។

۞ وَهَلۡ أَتَىٰكَ نَبَؤُاْ ٱلۡخَصۡمِ إِذۡ تَسَوَّرُواْ ٱلۡمِحۡرَابَ ﴿٢١﴾

២១-ហើយតើដំណឹងនៃការឈ្លោះប្រកែកគ្នានៅពេលដែលពួកគេបានផ្លោះរបងមាស្ជីទ(កន្លែងគោរពសក្ការៈរបស់ដាវូដ)បានមកដល់អ្នក(មូហាំម៉ាត់)ដែរឬទេ?

إِذۡ دَخَلُواْ عَلَىٰ دَاوُۥدَ فَفَزِعَ مِنۡهُمۡۖ قَالُواْ لَا تَخَفۡۖ خَصۡمَانِ بَغَىٰ بَعۡضُنَا عَلَىٰ بَعۡضٖ فَٱحۡكُم بَيۡنَنَا بِٱلۡحَقِّ وَلَا تُشۡطِطۡ وَٱهۡدِنَآ إِلَىٰ

២២-នៅពេលដែលពួកគេបានចូលទៅជួបដាវូដ ហើយគេមានការភ័យខ្លាចពួកគេ ពួកគេបាននិយាយថាៈ សូមអ្នកកុំខ្លាចអ្វី ។ ពួកយើងទាំងពីរឈ្លោះប្រកែកគ្នា ដោយពួកយើងបានបំពានទៅលើគ្នា ។ ដូច្នេះ សូមអ្នកមេត្តាកាត់សេចក្ដីរវាងពួកយើងដោយយុត្តិធម៌ផង ហើយសូមអ្នកកុំលំអៀងឱ្យសោះ និងសូមអ្នកចង្អុលបង្ហាញពួកយើង

ទៅកាន់មាគ៌ាដែលត្រឹមត្រូវផងចុះ ។

២៣-ពិតប្រាកដណាស់ នេះជាបងប្អូនរបស់ខ្ញុំ ។ គេមានពពែញី ចំនួនកៅសិបប្រាំបួនក្បាល ។ រីឯខ្ញុំមានតែពពែញីមួយក្បាលគត់ ។ ហើយគេបាននិយាយថាៈ ចូរអ្នកឱ្យវាមកខ្ញុំ ។ ហើយគេក៏មានប្រៀប ជាងខ្ញុំក្នុងការនិយាយស្ដីផងដែរ ។

២៤-ដាវូដបានពោលថាៈ ជាការពិតណាស់ គេបានបំពានលើ អ្នកដោយគេបានសុំពពែញីពីអ្នកយកទៅបន្ថែមលើពពែរបស់គេ ។ ហើយពិតប្រាកដណាស់ ភាគច្រើននៃពួកដែលចូលហ៊ុនគ្នាគឺបំពាន លើគ្នា លើកលែងតែបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើ ល្អត្រឹមត្រូវប៉ុណ្ណោះ តែពួកគេតិចតួចបំផុត ។ ក្រោយមកដាវូដដឹង ច្បាស់ថា យើងគ្រាន់តែសាកល្បងគេប៉ុណ្ណោះ ពេលនោះគេក៏សុំ អភ័យទោសនិងក្រាបស៊ូជូត ហើយនិងសារភាពកំហុសចំពោះម្ចាស់ របស់គេ ។

២៥-ហើយយើងបានអភ័យទោសឱ្យគេចំពោះរឿងនោះ ។ ហើយពិតប្រាកដណាស់ គេមានឋានៈជិតបំផុតចំពោះយើង និង មានកន្លែងវិលត្រឡប់ដ៏ល្អប្រសើរបំផុត ។

២៦-ឱដាវូដ! ពិតប្រាកដណាស់ យើងបានតែងតាំងអ្នកជាអ្នក គ្រប់គ្រងនៅលើផែនដីនេះ ។ ដូច្នេះ ចូរអ្នកកាត់សេចក្ដីរវាងមនុស្ស លោកដោយយុត្តិធម៌ ហើយកុំធ្វើតាមទំនើងចិត្តឱ្យសោះ ជាហេតុ ធ្វើឱ្យអ្នកវង្វេងពីមាគ៌ារបស់អល់ឡោះ ។ ពិតប្រាកដណាស់ ពួក ដែលវង្វេងពីមាគ៌ារបស់អល់ឡោះនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរ ដោយសារតែអ្វីដែលពួកគេបានភ្លេចថ្ងៃជំនុំជំរះ ។

២៧-ហើយយើងមិនបានបង្កើតមេឃ និងផែនដី និងអ្វីដែល មាននៅចន្លោះវាទាំងពីរដោយឥតប្រយោជន៍នោះឡើយ ។ នោះ ហើយគឺជាការស្មានរបស់ពួកដែលគ្មានជំនឿ ។ ដូច្នេះ ការវិនាស អន្តរាយដោយភ្លើងនរកគឺសម្រាប់ពួកដែលគ្មានជំនឿ ។

២៨-ឬឱ្យយើងចាត់ទុកបណ្ដាអ្នកដែលមានជំនឿ និងបានសាង

سَوَآءِ ٱلصِّرَٰطِ ﴿٢٢﴾

إِنَّ هَٰذَآ أَخِى لَهُۥ تِسۡعٌ وَتِسۡعُونَ نَعۡجَةً وَلِىَ
نَعۡجَةٌ وَٰحِدَةٌ فَقَالَ أَكۡفِلۡنِيهَا وَعَزَّنِى فِى
ٱلۡخِطَابِ ﴿٢٣﴾

قَالَ لَقَدۡ ظَلَمَكَ بِسُؤَالِ نَعۡجَتِكَ إِلَىٰ
نِعَاجِهِۦ ۖ وَإِنَّ كَثِيرًا مِّنَ ٱلۡخُلَطَآءِ لَيَبۡغِى
بَعۡضُهُمۡ عَلَىٰ بَعۡضٍ إِلَّا ٱلَّذِينَ ءَامَنُواْ
وَعَمِلُواْ ٱلصَّٰلِحَٰتِ وَقَلِيلٌ مَّا هُمۡ ۗ وَظَنَّ
دَاوُۥدُ أَنَّمَا فَتَنَّٰهُ فَٱسۡتَغۡفَرَ رَبَّهُۥ وَخَرَّ رَاكِعًا
وَأَنَابَ ۩ ﴿٢٤﴾

فَغَفَرۡنَا لَهُۥ ذَٰلِكَ ۖ وَإِنَّ لَهُۥ عِندَنَا لَزُلۡفَىٰ
وَحُسۡنَ مَـَٔابٖ ﴿٢٥﴾

يَٰدَاوُۥدُ إِنَّا جَعَلۡنَٰكَ خَلِيفَةً فِى ٱلۡأَرۡضِ
فَٱحۡكُم بَيۡنَ ٱلنَّاسِ بِٱلۡحَقِّ وَلَا تَتَّبِعِ ٱلۡهَوَىٰ
فَيُضِلَّكَ عَن سَبِيلِ ٱللَّهِ ۚ إِنَّ ٱلَّذِينَ يَضِلُّونَ
عَن سَبِيلِ ٱللَّهِ لَهُمۡ عَذَابٞ شَدِيدُۢ بِمَا نَسُواْ
يَوۡمَ ٱلۡحِسَابِ ﴿٢٦﴾

وَمَا خَلَقۡنَا ٱلسَّمَآءَ وَٱلۡأَرۡضَ وَمَا بَيۡنَهُمَا
بَٰطِلٗا ۚ ذَٰلِكَ ظَنُّ ٱلَّذِينَ كَفَرُواْ ۚ فَوَيۡلٞ لِّلَّذِينَ
كَفَرُواْ مِنَ ٱلنَّارِ ﴿٢٧﴾

أَمۡ نَجۡعَلُ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ

كَٱلْمُفْسِدِينَ فِى ٱلْأَرْضِ أَمْ نَجْعَلُ ٱلْمُتَّقِينَ كَٱلْفُجَّارِ ﴿٢٨﴾

អំពើល្អត្រឹមត្រូវដូចជាពួកដែលបង្កវិនាសកម្មនៅលើផែនដីនេះឬ? ឬមួយឱ្យយើងចាត់ទុកបណ្តាអ្នកដែលកោតខ្លាចអល់ឡោះ ដូចអ្នកដែលប្រព្រឹត្តបាបកម្មឬ?

كِتَٰبٌ أَنزَلْنَٰهُ إِلَيْكَ مُبَٰرَكٌ لِّيَدَّبَّرُوٓا۟ ءَايَٰتِهِۦ وَلِيَتَذَكَّرَ أُو۟لُوا۟ ٱلْأَلْبَٰبِ ﴿٢٩﴾

២៩-នេះគឺជាគម្ពីរដ៏មានពរជ័យដែលយើងបានបញ្ចុះវាឱ្យអ្នក ដើម្បីឱ្យពួកគេត្រិះរិះពិចារណាចំពោះអាយ៉ាត់ៗរបស់វា ហើយក៏ដើម្បីឱ្យបញ្ញាជនទាំងឡាយយកធ្វើជាមេរៀនផងដែរ ។

وَوَهَبْنَا لِدَاوُۥدَ سُلَيْمَٰنَ ۚ نِعْمَ ٱلْعَبْدُ ۖ إِنَّهُۥٓ أَوَّابٌ ﴿٣٠﴾

៣០-ហើយយើងបានប្រទានស៊ូឡៃម៉ានឱ្យដាវូដដែលជាខ្ញុំម្នាក់ដ៏ល្អប្រពៃ ។ ពិតប្រាកដណាស់ គេ(ស៊ូឡៃម៉ាន)គឺជាអ្នកដែលតែងតែសារភាពកំហុស(ចំពោះអល់ឡោះ) ។

إِذْ عُرِضَ عَلَيْهِ بِٱلْعَشِىِّ ٱلصَّٰفِنَٰتُ ٱلْجِيَادُ ﴿٣١﴾

៣១-(ចូរចងចាំ)នៅពេលដែលគេបានបង្ហាញឱ្យស៊ូឡៃម៉ានឃើញនៅពេលល្ងាចនូវសត្វសេះដែលឈរជើងបី និងលើកជើងមួយ ហើយរត់លឿន ។

فَقَالَ إِنِّىٓ أَحْبَبْتُ حُبَّ ٱلْخَيْرِ عَن ذِكْرِ رَبِّى حَتَّىٰ تَوَارَتْ بِٱلْحِجَابِ ﴿٣٢﴾

៣២-ហើយគេក៏បានពោលថា: ពិតប្រាកដណាស់ ខ្ញុំស្រឡាញ់ចូលចិត្តប្រការល្អ(សេះ)ដែលធ្វើឱ្យភ្លេចការរំលឹក(ថ្វាយបង្គំ)ទៅចំពោះម្ចាស់របស់ខ្ញុំរហូតដល់ថ្ងៃលិច ។

رُدُّوهَا عَلَىَّ ۖ فَطَفِقَ مَسْحًۢا بِٱلسُّوقِ وَٱلْأَعْنَاقِ ﴿٣٣﴾

៣៣-ចូរពួកអ្នកយកវាត្រឡប់មកឱ្យយើង ។ ពេលនោះគេក៏បានកាត់ជើងនិងកសេះនោះ ។

وَلَقَدْ فَتَنَّا سُلَيْمَٰنَ وَأَلْقَيْنَا عَلَىٰ كُرْسِيِّهِۦ جَسَدًا ثُمَّ أَنَابَ ﴿٣٤﴾

៣៤-ហើយជាការពិតណាស់ យើងបានសាកល្បងស៊ូឡៃម៉ាន ហើយយើងបានដាក់រូបមួយ(ស្តេចជិន)ទៅលើកៅអីរបស់គេ ។ បន្ទាប់មកគេក៏បានសារភាពទោសកំហុស ។

قَالَ رَبِّ ٱغْفِرْ لِى وَهَبْ لِى مُلْكًا لَّا يَنۢبَغِى لِأَحَدٍ مِّنۢ بَعْدِىٓ ۖ إِنَّكَ أَنتَ ٱلْوَهَّابُ ﴿٣٥﴾

៣៥-គេបានពោលថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាអភ័យទោសដល់ខ្ញុំ និងផ្តល់អំណាចដល់ខ្ញុំ ដែលមិនសក្តិសមសម្រាប់អ្នកណាម្នាក់(មានសិទ្ធិគ្រប់គ្រង)បន្ទាប់ពីខ្ញុំឡើយ ។ ពិតប្រាកដណាស់ អ្នកគឺជាម្ចាស់ដ៏មហាសប្បុរស ។

فَسَخَّرْنَا لَهُ ٱلرِّيحَ تَجْرِى بِأَمْرِهِۦ رُخَآءً حَيْثُ أَصَابَ ﴿٣٦﴾

៣៦-ដូច្នេះ យើងបានធ្វើឱ្យខ្យល់ស្ថិតក្រោមអំណាចរបស់គេ ដោយវាបក់បោកយ៉ាងល្អតាមការបញ្ជារបស់គេទៅទីណាដែលគេចង់ ។

وَٱلشَّيَـٰطِينَ كُلَّ بَنَّآءٍ وَغَوَّاصٍ ﴿٣٧﴾

៣៧-ហើយពួកស្ហៃតន(ក៏យើងបានធ្វើឱ្យស្ថិតនៅក្រោមបញ្ជា
របស់គេដែរ)ពួកវាទាំងអស់ អ្នកខ្លះជាអ្នកសាងសង់ និងជាអ្នក
ជ្រមុជទឹក ។

وَءَاخَرِينَ مُقَرَّنِينَ فِى ٱلْأَصْفَادِ ﴿٣٨﴾

៣៨-និងអ្នកដទៃទៀតត្រូវគេចងច្រវាក់ ។

هَـٰذَا عَطَآؤُنَا فَٱمْنُنْ أَوْ أَمْسِكْ بِغَيْرِ
حِسَابٍ ﴿٣٩﴾

៣៩-នេះហើយគឺជាការប្រទានរបស់យើង ។ ដូច្នេះចូរអ្នកផ្តល់
(វាឱ្យអ្នកដទៃ) ឬអ្នកទុកវាដោយគ្មានទោសពៃរ៍អ្វីឡើយ(ចំពោះ
អ្នក) ។

وَإِنَّ لَهُۥ عِندَنَا لَزُلْفَىٰ وَحُسْنَ مَـَٔابٍ ﴿٤٠﴾

៤០-ហើយពិតប្រាកដណាស់ គេមានឋានៈជិតបំផុតចំពោះយើង
និងមានកន្លែងវិលត្រឡប់ដ៏ប្រសើរបំផុត ។

وَٱذْكُرْ عَبْدَنَآ أَيُّوبَ إِذْ نَادَىٰ رَبَّهُۥٓ أَنِّى مَسَّنِىَ
ٱلشَّيْطَـٰنُ بِنُصْبٍ وَعَذَابٍ ﴿٤١﴾

៤១-ហើយចូរអ្នក(មូហាំម៉ាត់)ចងចាំនូវរឿងនៃខ្ញុំរបស់យើង
អៃយ៉ូប នៅពេលដែលគេបានបួងសួងសុំទៅចំពោះម្ចាស់របស់គេ
ថាៈ ពិតប្រាកដណាស់ ស្ហៃតនជាមូលហេតុធ្វើឱ្យខ្ញុំមានការឈឺចាប់
និងទារុណកម្ម ។

ٱرْكُضْ بِرِجْلِكَ ۖ هَـٰذَا مُغْتَسَلٌۢ بَارِدٌ
وَشَرَابٌ ﴿٤٢﴾

៤២-ចូរអ្នក(អៃយ៉ូប)ទន្ទ្រាំជើងរបស់អ្នក(ពេលនោះមានទឹក
ផុសចេញពីដី) ។ នេះគឺជាទឹកត្រជាក់សម្រាប់ងូតនិងផឹក ។

وَوَهَبْنَا لَهُۥٓ أَهْلَهُۥ وَمِثْلَهُم مَّعَهُمْ رَحْمَةً مِّنَّا
وَذِكْرَىٰ لِأُو۟لِى ٱلْأَلْبَـٰبِ ﴿٤٣﴾

៤៣-ហើយយើងបានផ្តល់ឱ្យគេបានជួបជុំគ្រួសាររបស់គេវិញ
ហើយនិងផ្តល់ឱ្យពួកគេដូចអ្វីដែលពួកគេមានពីមុនមកជាក្តីមេត្តា
ករុណាពីយើង និងជាការរំលឹកដល់បញ្ញាជនទាំងឡាយ ។

وَخُذْ بِيَدِكَ ضِغْثًا فَٱضْرِب بِّهِۦ وَلَا تَحْنَثْ ۗ
إِنَّا وَجَدْنَـٰهُ صَابِرًا ۚ نِّعْمَ ٱلْعَبْدُ ۖ إِنَّهُۥٓ
أَوَّابٌ ﴿٤٤﴾

៤៤-ហើយចូរអ្នកយកស្មៅមួយកណ្តាប់ដៃរបស់អ្នក រួចចូរអ្នក
វាយ(ប្រពន្ធអ្នក)នឹងវាចុះ ហើយចូរអ្នកកុំធ្វើខុសនឹងសម្បថ ។ ពិត
ប្រាកដណាស់ យើងបានប្រទះឃើញគេជាអ្នកអត់ធ្មត់ ។ គេជាខ្ញុំម្នាក់
ដ៏ល្អប្រពៃ ។ ពិតប្រាកដណាស់ គេគឺជាអ្នកដែលតែងតែសារភាព
កំហុស(ចំពោះអល់ឡោះ) ។

وَٱذْكُرْ عِبَـٰدَنَآ إِبْرَٰهِيمَ وَإِسْحَـٰقَ وَيَعْقُوبَ
أُو۟لِى ٱلْأَيْدِى وَٱلْأَبْصَـٰرِ ﴿٤٥﴾

៤៥-ហើយចូរអ្នក(មូហាំម៉ាត់)ចងចាំពីបណ្តាខ្ញុំរបស់យើង
អ៊ីព្រាហ៊ីម និងអ៊ីសហាក ហើយនិងយ៉ាក់កូបដែលជាអ្នកខ្លាំងពូកែ
និងមានប្រាជ្ញាឈ្លាសវៃ ។

| | |
|---|---|
| ៤៦-ពិតប្រាកដណាស់ យើងបានជ្រើសរើសពួកគេដោយឱ្យពួកគេរំលឹកចំពោះថ្ងៃបរលោកនិងមានជំនឿនឹងវា ។ | إِنَّآ أَخۡلَصۡنَٰهُم بِخَالِصَةٖ ذِكۡرَى ٱلدَّارِ ٤٦ |
| ៤៧-ហើយពិតប្រាកដណាស់ ពួកគេគឺស្ថិតក្នុងចំណោមអ្នកដែលត្រូវគេជ្រើសរើសដ៏ល្អប្រសើរបំផុតចំពោះយើង ។ | وَإِنَّهُمۡ عِندَنَا لَمِنَ ٱلۡمُصۡطَفَيۡنَ ٱلۡأَخۡيَارِ ٤٧ |
| ៤៨-ចូរអ្នកចងចាំនូវរឿងអ៊ីស្មាអ៊ីល និងអ៊ីលយ៉ាសាក់ និងហ៊្សុលគិហ្វលី ។ ហើយអ្នកទាំងអស់នោះគឺស្ថិតក្នុងចំណោមអ្នកដែលល្អប្រសើរបំផុត ។ | وَٱذۡكُرۡ إِسۡمَٰعِيلَ وَٱلۡيَسَعَ وَذَا ٱلۡكِفۡلِۖ وَكُلّٞ مِّنَ ٱلۡأَخۡيَارِ ٤٨ |
| ៤៩-នេះហើយគឺជាការរំលឹក(គម្ពីរគួរអាន) ។ ហើយពិតប្រាកដណាស់ សម្រាប់បណ្តាអ្នកដែលកោតខ្លាច គឺមានកន្លែងវិលត្រឡប់ដ៏ល្អប្រសើរ ។ | هَٰذَا ذِكۡرٞۚ وَإِنَّ لِلۡمُتَّقِينَ لَحُسۡنَ مَـَٔابٖ ٤٩ |
| ៥០-(វានោះគឺ) ឋានសួគ៌អាត់និន ដែលទ្វារទាំងឡាយត្រូវគេបើកសម្រាប់ទទួលពួកគេ ។ | جَنَّٰتِ عَدۡنٖ مُّفَتَّحَةٗ لَّهُمُ ٱلۡأَبۡوَٰبُ ٥٠ |
| ៥១-ពួកគេអង្គុយទម្រេតខ្លួននៅក្នុងនោះ ដោយពួកគេអាចសុំផ្លែឈើ និងភេសជ្ជៈគ្រប់ប្រភេទតាមតម្រូវការនៅក្នុងនោះ ។ | مُتَّكِـِٔينَ فِيهَا يَدۡعُونَ فِيهَا بِفَٰكِهَةٖ كَثِيرَةٖ وَشَرَابٖ ٥١ |
| ៥២-ហើយនៅក្បែរពួកគេមានស្រីទេពអប្សរ(មិនសម្លឹងបុរសដទៃក្រៅពីស្វាមីរបស់គេ) ដែលមានអាយុស្មើៗគ្នា ។ | ۞ وَعِندَهُمۡ قَٰصِرَٰتُ ٱلطَّرۡفِ أَتۡرَابٌ ٥٢ |
| ៥៣-នេះហើយគឺជាអ្វីដែលពួកអ្នកត្រូវគេសន្យានៅថ្ងៃជំនុំជំរះ ។ | هَٰذَا مَا تُوعَدُونَ لِيَوۡمِ ٱلۡحِسَابِ ٥٣ |
| ៥៤-ពិតប្រាកដណាស់ នេះគឺជាលាភសក្ការៈរបស់យើងដែលវាមិនចេះអស់ឡើយ ។ | إِنَّ هَٰذَا لَرِزۡقُنَا مَا لَهُۥ مِن نَّفَادٍ ٥٤ |
| ៥៥-នេះហើយ(គឺជាការតបស្នងចំពោះអ្នកដែលកោតខ្លាចអល់ឡោះ) ។ ហើយពិតប្រាកដណាស់ កន្លែងវិលត្រឡប់ដ៏អាក្រក់គឺសម្រាប់ពួកដែលបំពាន ។ | هَٰذَاۚ وَإِنَّ لِلطَّٰغِينَ لَشَرَّ مَـَٔابٖ ٥٥ |
| ៥៦-គឺនរកជើហាន់ណាំដែលពួកគេនឹងចូលទៅក្នុងវា ។ ហើយវាជាកន្លែងស្នាក់នៅដ៏អាក្រក់បំផុត ។ | جَهَنَّمَ يَصۡلَوۡنَهَا فَبِئۡسَ ٱلۡمِهَادُ ٥٦ |
| ៥៧-នេះគឺជាទឹកក្តៅបំផុត និងខ្ទុះដែលស្រក់ចេញពីខ្លួនប្រាណ | هَٰذَا فَلۡيَذُوقُوهُ حَمِيمٞ وَغَسَّاقٞ ٥٧ |

របស់ពួកនរក ។ ដូច្នេះ ចូរឱ្យពួកគេភ្លក្សវាចុះ ។

៥៨-និងមានទារុណកម្មផ្សេងៗទៀតស្រដៀងនឹងវាគ្រប់បែប យ៉ាង ។

وَءَاخَرُ مِن شَكۡلِهِۦٓ أَزۡوَٰجٌ ٥٨

៥៩-(មានគេនិយាយទៅកាន់មេដឹកនាំរបស់ពួកដែលគ្មានជំនឿ ថា) នេះគឺជាក្រុម(ដែលបានតាមពួកអ្នក)ដែលប្រជ្រៀតគ្នាចូល នរកជាមួយនឹងពួកអ្នក ។ (ពួកមេដឹកនាំបានតបថា) គ្មានការស្វា-គមន៍ចំពោះពួកគេឡើយ ។ ពិតប្រាកដណាស់ ពួកគេបានចូលនរក ទាំងអស់គ្នា ។

هَٰذَا فَوۡجٞ مُّقۡتَحِمٞ مَّعَكُمۡ لَا مَرۡحَبَۢا بِهِمۡۚ إِنَّهُمۡ صَالُواْ ٱلنَّارِ ٥٩

៦០-ពួកគេ(ពួកតាមមេដឹកនាំ)បានតបថាៈ ផ្ទុយទៅវិញពួក អ្នក(ក៏ដូច្នោះដែរ)គ្មានការស្វាគមន៍ចំពោះពួកអ្នកឡើយ ពីព្រោះ ពួកអ្នកបានធ្វើឱ្យពួកយើងធ្លាក់ទៅក្នុងនរក ។ ដូច្នេះ(នរក)ជា កន្លែងអចិន្ត្រៃយ៍ដ៏អាក្រក់(សម្រាប់ពួកគេ) ។

قَالُواْ بَلۡ أَنتُمۡ لَا مَرۡحَبَۢا بِكُمۡۖ أَنتُمۡ قَدَّمۡتُمُوهُ لَنَاۖ فَبِئۡسَ ٱلۡقَرَارُ ٦٠

៦១-ពួកគេបាននិយាយថាៈ ឱម្ចាស់របស់ពួកយើង! អ្នកណា ដែលបានធ្វើឱ្យពួកយើងធ្លាក់ក្នុងនរកនោះ សូមទ្រង់បន្ថែមទារុណ-កម្មទៅលើគេនៅក្នុងនរកទ្វេដងផងចុះ ។

قَالُواْ رَبَّنَا مَن قَدَّمَ لَنَا هَٰذَا فَزِدۡهُ عَذَابٗا ضِعۡفٗا فِي ٱلنَّارِ ٦١

៦២-ហើយពួកគេបាននិយាយទៀតថាៈ ហេតុអ្វីបានជាពួក យើងមិនឃើញពួកបុរសៗដែលកាលពីមុនពួកយើងធ្លាប់បានចាត់ ទុកពួកគេក្នុងចំណោមពួកដែលអាក្រក់ជាងគេនោះ?

وَقَالُواْ مَا لَنَا لَا نَرَىٰ رِجَالٗا كُنَّا نَعُدُّهُم مِّنَ ٱلۡأَشۡرَارِ ٦٢

៦៣-តើពួកយើងបានសើចចំអកឱ្យពួកគេដោយច្រឡំឬក៏ភ្នែក (របស់ពួកយើង)មើលមិនឃើញពួកគេ(នៅក្នុងឋាននរក)?

أَتَّخَذۡنَٰهُمۡ سِخۡرِيًّا أَمۡ زَاغَتۡ عَنۡهُمُ ٱلۡأَبۡصَٰرُ ٦٣

៦៤-ពិតប្រាកដណាស់ រឿងនោះគឺជារឿងពិតដែលពួកនរក ឈ្លោះប្រកែកគ្នា ។

إِنَّ ذَٰلِكَ لَحَقّٞ تَخَاصُمُ أَهۡلِ ٱلنَّارِ ٦٤

៦៥-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តាមពិត ខ្ញុំគ្រាន់តែជាអ្នក ដាស់តឿនព្រមានប៉ុណ្ណោះ ។ ហើយគ្មានម្ចាស់ណាផ្សេងដែលត្រូវ គោរពសក្ការៈដ៏ពិតប្រាកដក្រៅពីអល់ឡោះដែលជាម្ចាស់តែមួយ គត់ដ៏មហាខ្លាំងក្លានោះឡើយ ។

قُلۡ إِنَّمَآ أَنَا۠ مُنذِرٞۖ وَمَا مِنۡ إِلَٰهٍ إِلَّا ٱللَّهُ ٱلۡوَٰحِدُ ٱلۡقَهَّارُ ٦٥

رَبُّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَمَا بَيۡنَهُمَا ٱلۡعَزِيزُ ٱلۡغَفَّٰرُ ٦٦

៦៦-ទ្រង់ជាម្ចាស់គ្រប់គ្រងមេឃជាច្រើនជាន់និងផែនដី ហើយនិងអ្វីដែលនៅចន្លោះវាទាំងពីរ ។ ទ្រង់មហាខ្លាំងពូកែ មហាអភ័យទោស ។

قُلۡ هُوَ نَبَؤٌاْ عَظِيمٌ ٦٧

៦៧-ចូរអ្នក( មូហាំម៉ាត់) ពោលទៀតថា: វា( គម្ពីរគួរអាន) គឺជាដំណឹង( ដែលមានប្រយោជន៍) ដ៏ធំធេង

أَنتُمۡ عَنۡهُ مُعۡرِضُونَ ٦٨

៦៨-ដែលពួកអ្នកងាកចេញពីវា ។

مَا كَانَ لِيَ مِنۡ عِلۡمِۭ بِٱلۡمَلَإِ ٱلۡأَعۡلَىٰٓ إِذۡ يَخۡتَصِمُونَ ٦٩

៦៩-ខ្ញុំមិនបានដឹងអំពីរឿងម៉ាឡាអ៊ីកាត់ដែលនៅលើមេឃ ខណៈដែលពួកគេប្រកែកគ្នា( ពីរឿងបង្កើតអាដាំ) ឡើយ ។

إِن يُوحَىٰٓ إِلَيَّ إِلَّآ أَنَّمَآ أَنَا۠ نَذِيرٞ مُّبِينٌ ٧٠

៧០-គេមិនផ្តល់វ៉ាហ៊ីឱ្យខ្ញុំ ក្រៅពីឱ្យខ្ញុំធ្វើជាអ្នកដាស់តឿនព្រមានដ៏ច្បាស់លាស់នោះឡើយ ។

إِذۡ قَالَ رَبُّكَ لِلۡمَلَٰٓئِكَةِ إِنِّي خَٰلِقُۢ بَشَرٗا مِّن طِينٖ ٧١

៧១-( ចូរចងចាំ) នៅពេលដែលម្ចាស់របស់អ្នកបានមានបន្ទូលទៅកាន់ម៉ាឡាអ៊ីកាត់ថា ពិតប្រាកដណាស់ យើងជាអ្នកបង្កើតមនុស្សអំពីដីស្អិត ។

فَإِذَا سَوَّيۡتُهُۥ وَنَفَخۡتُ فِيهِ مِن رُّوحِي فَقَعُواْ لَهُۥ سَٰجِدِينَ ٧٢

៧២-ហើយនៅពេលដែលយើងបានធ្វើឱ្យគេ( អាដាំ) មានរូបរាងពេញលេញ និងបានផ្លុំបញ្ចូលទៅក្នុងខ្លួនគេនូវវិញ្ញាណរបស់យើងហើយនោះ ចូរពួកអ្នក( ម៉ាឡាអ៊ីកាត់) ស៊ូជូតចំពោះគេចុះ ។

فَسَجَدَ ٱلۡمَلَٰٓئِكَةُ كُلُّهُمۡ أَجۡمَعُونَ ٧٣

៧៣-ដូច្នេះម៉ាឡាអ៊ីកាត់ក៏បានស៊ូជូតទាំងអស់គ្នា ។

إِلَّآ إِبۡلِيسَ ٱسۡتَكۡبَرَ وَكَانَ مِنَ ٱلۡكَٰفِرِينَ ٧٤

៧៤-លើកលែងតែអ៊ីព្លីសប៉ុណ្ណោះ ដែលបានក្រអឺតក្រទម ។ ហើយវាបានស្ថិតក្នុងចំណោមពួកដែលប្រឆាំង ។

قَالَ يَٰٓإِبۡلِيسُ مَا مَنَعَكَ أَن تَسۡجُدَ لِمَا خَلَقۡتُ بِيَدَيَّۖ أَسۡتَكۡبَرۡتَ أَمۡ كُنتَ مِنَ ٱلۡعَالِينَ ٧٥

៧៥-អល់ឡោះបានមានបន្ទូលថា: ឱអ៊ីព្លីស! តើអ្វីដែលរារាំងអ្នកមិនឱ្យស៊ូជូតចំពោះអ្វីដែលយើងបានបង្កើតដោយដៃទាំងពីររបស់យើង? តើឯងក្រអឺតក្រទម ឬក៏ឯងស្ថិតក្នុងចំណោមអ្នកដែលមានអំនួតក្អេងក្អាង ។

قَالَ أَنَا۠ خَيۡرٞ مِّنۡهُ خَلَقۡتَنِي مِن نَّارٖ وَخَلَقۡتَهُۥ مِن طِينٖ ٧٦

៧៦-វាបានតបវិញថា: ខ្ញុំល្អជាងគេ( អាដាំ) ព្រោះទ្រង់បានបង្កើតខ្ញុំអំពីភ្លើង ហើយទ្រង់បានបង្កើតគេអំពីដីស្អិត ។

قَالَ فَٱخۡرُجۡ مِنۡهَا فَإِنَّكَ رَجِيمٞ ٧٧

៧៧-ហើយអល់ឡោះបានមានបន្ទូលថាៈ ដូច្នេះ ចូរឯងចាក
ចេញពីវា( ឋានសួគ៌) ចុះ ហើយពិតប្រាកដណាស់ ឯងគឺជាអ្នកដែល
ត្រូវគេដាក់បណ្តាសា ។

وَإِنَّ عَلَيۡكَ لَعۡنَتِيٓ إِلَىٰ يَوۡمِ ٱلدِّينِ ٧٨

៧៨-ហើយពិតប្រាកដណាស់ ឯងត្រូវបណ្តាសារបស់យើងរហូត
ដល់ថ្ងៃបរលោក ។

قَالَ رَبِّ فَأَنظِرۡنِيٓ إِلَىٰ يَوۡمِ يُبۡعَثُونَ ٧٩

៧៩-វាបាននិយាយថាៈ ឱម្ចាស់របស់ខ្ញុំ! សូមពន្យារពេលឱ្យខ្ញុំ
រស់រហូតដល់ថ្ងៃដែលពួកគេ( មនុស្សលោក) ត្រូវគេធ្វើឱ្យរស់ឡើង
វិញផង ។

قَالَ فَإِنَّكَ مِنَ ٱلۡمُنظَرِينَ ٨٠

៨០-ទ្រង់បានមានបន្ទូលថាៈ ដូច្នេះ ពិតប្រាកដណាស់ អ្នកនឹង
ស្ថិតក្នុងចំណោមពួកដែលត្រូវគេពន្យារពេល

إِلَىٰ يَوۡمِ ٱلۡوَقۡتِ ٱلۡمَعۡلُومِ ٨١

៨១-រហូតដល់ថ្ងៃមួយនៃពេលវេលាដែលត្រូវបានគេកំណត់ ។

قَالَ فَبِعِزَّتِكَ لَأُغۡوِيَنَّهُمۡ أَجۡمَعِينَ ٨٢

៨២-វាបាននិយាយថាៈ ដោយភាពខ្ពង់ខ្ពស់របស់ទ្រង់ ខ្ញុំពិតជា
នឹងធ្វើឱ្យពួកគេទាំងអស់វង្វេង ។

إِلَّا عِبَادَكَ مِنۡهُمُ ٱلۡمُخۡلَصِينَ ٨٣

៨៣-លើកលែងតែបណ្តាខ្ញុំរបស់ទ្រង់ដែលមានចិត្តស្មោះត្រង់
ក្នុងចំណោមពួកគេប៉ុណ្ណោះ ។

قَالَ فَٱلۡحَقُّ وَٱلۡحَقَّ أَقُولُ ٨٤

៨៤-ទ្រង់បានមានបន្ទូលថាៈ វាគឺជាការពិត ។ ហើយយើង
បន្ទូលនូវពាក្យពិតថាៈ

لَأَمۡلَأَنَّ جَهَنَّمَ مِنكَ وَمِمَّن تَبِعَكَ مِنۡهُمۡ
أَجۡمَعِينَ ٨٥

៨៥-យើងប្រាកដជានឹងដាក់បំពេញនរកជើហាន់ណាំអំពីអ្នក
ឯង និងអ្នកណាដែលបានដើរតាមឯងទាំងអស់គ្នាក្នុងចំណោម
ពួកគេ ។

قُلۡ مَآ أَسۡـَٔلُكُمۡ عَلَيۡهِ مِنۡ أَجۡرٖ وَمَآ أَنَا۠ مِنَ
ٱلۡمُتَكَلِّفِينَ ٨٦

៨៦-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ខ្ញុំមិនស្នើសុំពីពួកអ្នកនូវ
កម្រៃណាមួយឡើយ ហើយខ្ញុំក៏មិនស្ថិតក្នុងចំណោមអ្នកដែលប្រឌិត
នោះដែរ ។

إِنۡ هُوَ إِلَّا ذِكۡرٞ لِّلۡعَٰلَمِينَ ٨٧

៨៧-វា( គម្ពីរគួរអាន) មិនមែនជាអ្វីក្រៅពីការរំលឹកសម្រាប់
ពិភពទាំងអស់នោះឡើយ ។

وَلَتَعۡلَمُنَّ نَبَأَهُۥ بَعۡدَ حِينِۭ ٨٨

៨៨-ហើយពួកអ្នក( ពួកមូស្ហរីគីន) ពិតជានឹងដឹងពីដំណឹងរបស់

វា(គម្ពីរគួរអាន)ក្រោយពីពេលនេះទៅ។

## ជំពូកអាស់ហ្សូមើរ

سورة الزمر

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

تَنزِيلُ ٱلْكِتَٰبِ مِنَ ٱللَّهِ ٱلْعَزِيزِ ٱلْحَكِيمِ ﴿١﴾

១-ការបញ្ចុះគម្ពីរ(គួរអាន)នេះគឺមកពីអល់ឡោះដែលមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

إِنَّآ أَنزَلْنَآ إِلَيْكَ ٱلْكِتَٰبَ بِٱلْحَقِّ فَٱعْبُدِ ٱللَّهَ مُخْلِصًا لَّهُ ٱلدِّينَ ﴿٢﴾

២-ពិតប្រាកដណាស់ យើងបានបញ្ចុះគម្ពីរឱ្យអ្នក(មូហាំម៉ាត់) ដោយនាំមកនូវការពិត។ដូច្នេះ ចូរអ្នកគោរពសក្ការៈចំពោះអល់ឡោះដោយចិត្តស្មោះសក្នុងការប្រណិប័តន៍ចំពោះទ្រង់ចុះ។

أَلَا لِلَّهِ ٱلدِّينُ ٱلْخَالِصُ ۚ وَٱلَّذِينَ ٱتَّخَذُوا۟ مِن دُونِهِۦٓ أَوْلِيَآءَ مَا نَعْبُدُهُمْ إِلَّا لِيُقَرِّبُونَآ إِلَى ٱللَّهِ زُلْفَىٰٓ إِنَّ ٱللَّهَ يَحْكُمُ بَيْنَهُمْ فِى مَا هُمْ فِيهِ يَخْتَلِفُونَ ۗ إِنَّ ٱللَّهَ لَا يَهْدِى مَنْ هُوَ كَٰذِبٌ كَفَّارٌ ﴿٣﴾

៣-ចូរដឹងថាៈ សាសនាដែលបរិសុទ្ធគឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ហើយពួកដែលបានយកអ្នកគាំពារផ្សេងពីទ្រង់(បាននិយាយថា) ពួកយើងមិនគោរពសក្ការៈចំពោះពួកវាឡើយ លើកលែងតែដើម្បីឱ្យពួកវាបញ្ជិតពួកយើងឱ្យជិតបំផុតទៅចំពោះអល់ឡោះប៉ុណ្ណោះ។ ពិតប្រាកណាស់អល់ឡោះនឹងកាត់សេចក្ដីរវាងពួកគេនូវអ្វីដែលពួកគេខ្វែងគំនិតគ្នាចំពោះវា(ការគោរពសក្ការៈ)។ ពិតប្រាកដណាស់ អល់ឡោះមិនចង្អុលបង្ហាញអ្នកណាដែលជាអ្នកភូតកុហក និងប្រឆាំងឡើយ។

لَّوْ أَرَادَ ٱللَّهُ أَن يَتَّخِذَ وَلَدًا لَّٱصْطَفَىٰ مِمَّا يَخْلُقُ مَا يَشَآءُ ۚ سُبْحَٰنَهُۥ ۖ هُوَ ٱللَّهُ ٱلْوَٰحِدُ ٱلْقَهَّارُ ﴿٤﴾

៤-ប្រសិនបើអល់ឡោះមានបំណងយកអ្នកណាម្នាក់ធ្វើជាបុត្រ ទ្រង់ពិតជានឹងជ្រើសរើសអំពីអ្វីដែលទ្រង់បង្កើតតាមតែទ្រង់មានចេតនាជាមិនខាន។ ទ្រង់មហាស្អាតស្អំ។ ទ្រង់គឺអល់ឡោះដែលជាម្ចាស់តែមួយគត់ មហាខ្លាំងក្លា។

خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ بِٱلْحَقِّ ۖ يُكَوِّرُ ٱلَّيْلَ عَلَى ٱلنَّهَارِ وَيُكَوِّرُ ٱلنَّهَارَ عَلَى ٱلَّيْلِ ۖ وَسَخَّرَ ٱلشَّمْسَ وَٱلْقَمَرَ ۖ كُلٌّ يَجْرِى لِأَجَلٍ مُّسَمًّى ۗ أَلَا هُوَ ٱلْعَزِيزُ ٱلْغَفَّٰرُ ﴿٥﴾

៥-ទ្រង់បានបង្កើតមេឃជាច្រើនជាន់ និងផែនដី(ដោយមានគោលបំណង)យ៉ាងពិតប្រាកដ។ ទ្រង់ធ្វើឱ្យពេលយប់គ្របលើពេលថ្ងៃ ហើយទ្រង់ធ្វើឱ្យពេលថ្ងៃគ្របលើពេលយប់។ ហើយទ្រង់បានបញ្ជាព្រះអាទិត្យ និងព្រះច័ន្ទឱ្យដើរតាមគន្លងរៀងៗខ្លួនរហូតដល់ពេលកំណត់។ តើទ្រង់មិនមែនមហាខ្លាំងពូកែ មហាអភ័យ-ទោសទេឬ?

خَلَقَكُم مِّن نَّفْسٍ وَٰحِدَةٍ ثُمَّ جَعَلَ مِنْهَا

៦-ទ្រង់បានបង្កើតពួកអ្នកមកពីមនុស្សតែមួយគត់(អាដាំ)

زَوْجَهَا وَأَنزَلَ لَكُم مِّنَ ٱلْأَنْعَٰمِ ثَمَٰنِيَةَ أَزْوَٰجٍ ۚ يَخْلُقُكُمْ فِى بُطُونِ أُمَّهَٰتِكُمْ خَلْقًا مِّنۢ بَعْدِ خَلْقٍ فِى ظُلُمَٰتٍ ثَلَٰثٍ ۚ ذَٰلِكُمُ ٱللَّهُ رَبُّكُمْ لَهُ ٱلْمُلْكُ ۖ لَآ إِلَٰهَ إِلَّا هُوَ ۖ فَأَنَّىٰ تُصْرَفُونَ ٦

បន្ទាប់មកទ្រង់បានបង្កើតចេញពីគេនូវភរិយារបស់គេ(ហាវ៉ា)។ ហើយទ្រង់បានបង្កើតសត្វពាហនៈប្រាំបីប្រភេទសម្រាប់ពួកអ្នក។ ទ្រង់បង្កើតពួកអ្នកនៅក្នុងផ្ទៃម្ដាយរបស់ពួកអ្នកតាមដំណាក់កាល១ នៅក្នុងទីងងឹតទាំងបី(ពោះ ស្បូន និងសុក)។ នោះហើយគឺ អល់ឡោះដែលជាម្ចាស់របស់ពួកអ្នកដែលទ្រង់មានអំណាច។ គ្មានម្ចាស់ណាផ្សេងដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ។ ដូច្នេះ តើពួកអ្នកត្រូវគេបង្វែរយ៉ាងដូចម្ដេច?

إِن تَكْفُرُوا۟ فَإِنَّ ٱللَّهَ غَنِىٌّ عَنكُمْ ۖ وَلَا يَرْضَىٰ لِعِبَادِهِ ٱلْكُفْرَ ۖ وَإِن تَشْكُرُوا۟ يَرْضَهُ لَكُمْ ۗ وَلَا تَزِرُ وَازِرَةٌ وِزْرَ أُخْرَىٰ ۗ ثُمَّ إِلَىٰ رَبِّكُم مَّرْجِعُكُمْ فَيُنَبِّئُكُم بِمَا كُنتُمْ تَعْمَلُونَ ۚ إِنَّهُۥ عَلِيمٌۢ بِذَاتِ ٱلصُّدُورِ ٧

៧-ប្រសិនបើពួកអ្នកបដិសេធវិញនោះ ពិតប្រាកដណាស់ អល់ឡោះមហាមានលើសលប់មិនត្រូវការ(ជំនឿ)ពួកអ្នកឡើយ។ ហើយទ្រង់មិនចូលចិត្តភាពគ្មានជំនឿចំពោះខ្ញុំទាំងឡាយរបស់ទ្រង់ឡើយ។ តែប្រសិនបើពួកអ្នកដឹងគុណ(ដោយមានជំនឿ)វិញ គឺទ្រង់នឹងស្រឡាញ់ចូលចិត្តចំពោះការដឹងគុណរបស់ពួកអ្នក។ ហើយអ្នកដែលសាងបាបកម្មមិនអាចទទួលបន្ទុកចំពោះបាបកម្មអ្នកដទៃបានឡើយ។ ក្រោយមក ទៅចំពោះម្ចាស់របស់ពួកអ្នកតែមួយគត់ជាកន្លែងវិលត្រឡប់របស់ពួកអ្នក។ ហើយទ្រង់នឹងប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត។ ពិតប្រាកដណាស់ ទ្រង់មហាដឹងនូវអ្វីដែលមាននៅក្នុងចិត្ត។

۞ وَإِذَا مَسَّ ٱلْإِنسَٰنَ ضُرٌّ دَعَا رَبَّهُۥ مُنِيبًا إِلَيْهِ ثُمَّ إِذَا خَوَّلَهُۥ نِعْمَةً مِّنْهُ نَسِىَ مَا كَانَ يَدْعُوٓا۟ إِلَيْهِ مِن قَبْلُ وَجَعَلَ لِلَّهِ أَندَادًا لِّيُضِلَّ عَن سَبِيلِهِۦ ۚ قُلْ تَمَتَّعْ بِكُفْرِكَ قَلِيلًا ۖ إِنَّكَ مِنْ أَصْحَٰبِ ٱلنَّارِ ٨

៨-ហើយនៅពេលដែលគ្រោះថ្នាក់បានបៀតបៀនមនុស្សលោក គេក៏បានបួងសួងសុំពីម្ចាស់របស់គេ ដោយសារភាពកំហុសទៅចំពោះទ្រង់។ បន្ទាប់មកនៅពេលដែលទ្រង់បានប្រទាននៀកម៉ាត់របស់ទ្រង់ឱ្យគេវិញនោះ គេក៏ភ្លេចនូវអ្វីដែលគេធ្លាប់បួងសួងសុំពីទ្រង់កាលពីមុន ថែមទាំងបានបង្កើតព្រះនានាសម្រាប់ធ្វើស្ហ៊ីរិកចំពោះអល់ឡោះ ដើម្បីធ្វើឱ្យ(មនុស្សលោក)វង្វេងពីមាគ៌ារបស់ទ្រង់ទៀតផង។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ចូរអ្នកសប្បាយរីករាយនឹងភាពគ្មានជំនឿរបស់អ្នកមួយរយៈពេលសិនចុះ។ ពិតប្រាកដណាស់ អ្នកគឺស្ថិតក្នុងចំណោមពួកនរក។

أَمَّنْ هُوَ قَٰنِتٌ ءَانَآءَ ٱلَّيْلِ سَاجِدًا وَقَآئِمًا يَحْذَرُ ٱلْـَٔاخِرَةَ وَيَرْجُوا۟ رَحْمَةَ رَبِّهِۦ ۗ قُلْ هَلْ

៩-(តើអ្នកដែលសប្បាយរីករាយនឹងភាពគ្មានជំនឿប្រសើរជាង) ឬមួយអ្នកដែលគោរពសក្ការៈចំពោះអល់ឡោះនៅពេលយប់ដោយស៊ូជូត និងឈរទាំងខ្លាចចំពោះថ្ងៃបរលោក ហើយ

يَسۡتَوِي ٱلَّذِينَ يَعۡلَمُونَ وَٱلَّذِينَ لَا يَعۡلَمُونَۗ
إِنَّمَا يَتَذَكَّرُ أُوْلُواْ ٱلۡأَلۡبَٰبِ ٩

សង្ឃឹមចំពោះក្តីមេត្តាករុណាពីម្ចាស់របស់គេប្រសើរជាង? ចូរអ្នក (មូហាំម៉ាត់) ពោលថាៈ តើបណ្តាអ្នកដែលចេះដឹង និងអ្នកដែលមិនចេះដឹងស្មើគ្នាដែរឬទេ? ពិតប្រាកដណាស់ មានតែបញ្ញាជនទាំងឡាយប៉ុណ្ណោះដែលចេះពិចារណា។

قُلۡ يَٰعِبَادِ ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ رَبَّكُمۡۚ لِلَّذِينَ
أَحۡسَنُواْ فِي هَٰذِهِ ٱلدُّنۡيَا حَسَنَةٞۗ وَأَرۡضُ ٱللَّهِ
وَٰسِعَةٌۗ إِنَّمَا يُوَفَّى ٱلصَّٰبِرُونَ أَجۡرَهُم بِغَيۡرِ
حِسَابٖ ١٠

១០-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ឱបណ្តាខ្ញុំដែលមានជំនឿ! ចូរពួកអ្នកកោតខ្លាចចំពោះម្ចាស់របស់ពួកអ្នក។ ការតបស្នងដ៏ល្អ (នៅថ្ងៃបរលោក) គឺសម្រាប់អ្នកដែលបានសាងអំពើល្អនៅក្នុងលោកិយនេះ។ ហើយផែនដីរបស់អល់ឡោះគឺទូលំទូលាយ។ ពិតប្រាកដណាស់ បណ្តាអ្នកដែលអត់ធ្មត់នឹងត្រូវគេផ្តល់ឱ្យនូវផលបុណ្យរបស់ពួកគេយ៉ាងពេញលេញដោយឥតគណនា។

قُلۡ إِنِّيٓ أُمِرۡتُ أَنۡ أَعۡبُدَ ٱللَّهَ مُخۡلِصٗا لَّهُ
ٱلدِّينَ ١١

១១-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពិតប្រាកដណាស់ ខ្ញុំត្រូវបានគេបញ្ជាឱ្យគោរពសក្ការៈចំពោះអល់ឡោះដោយចិត្តស្មោះសក្នុងការប្រណិប័តន៍ចំពោះទ្រង់។

وَأُمِرۡتُ لِأَنۡ أَكُونَ أَوَّلَ ٱلۡمُسۡلِمِينَ ١٢

១២-ហើយខ្ញុំក៏ត្រូវបានគេបញ្ជាដើម្បីឱ្យក្លាយជាអ្នកដែលកាន់សាសនាអ៊ីស្លាមមុនគេបង្អស់ដែរ។

قُلۡ إِنِّيٓ أَخَافُ إِنۡ عَصَيۡتُ رَبِّي عَذَابَ يَوۡمٍ
عَظِيمٖ ١٣

១៣-ចូរអ្នកពោលថា : ពិតប្រាកដណាស់ ខ្ញុំខ្លាចត្រូវទារុណកម្មនាថ្ងៃដ៏ធំធេង ប្រសិនបើខ្ញុំប្រឆាំងនឹងម្ចាស់របស់ខ្ញុំ។

قُلِ ٱللَّهَ أَعۡبُدُ مُخۡلِصٗا لَّهُۥ دِينِي ١٤

១៤-ចូរអ្នកពោលថាៈ អល់ឡោះតែមួយគត់ដែលខ្ញុំគោរពសក្ការៈដោយចិត្តស្មោះសក្នុងការប្រណិប័តន៍របស់ខ្ញុំចំពោះទ្រង់។

فَٱعۡبُدُواْ مَا شِئۡتُم مِّن دُونِهِۦۗ قُلۡ إِنَّ
ٱلۡخَٰسِرِينَ ٱلَّذِينَ خَسِرُوٓاْ أَنفُسَهُمۡ وَأَهۡلِيهِمۡ يَوۡمَ
ٱلۡقِيَٰمَةِۗ أَلَا ذَٰلِكَ هُوَ ٱلۡخُسۡرَانُ ٱلۡمُبِينُ ١٥

១៥-ដូច្នេះ ចូរពួកអ្នកគោរពសក្ការៈអ្វីផ្សេងក្រៅពីទ្រង់តាមតែចិត្តរបស់ពួកអ្នកចុះ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ពួកដែលខាតបង់ គឺជាពួកដែលបានខាតបង់ខ្លួនឯង និងក្រុមគ្រួសាររបស់ពួកគេនៅថ្ងៃបរលោក។ តើនោះមិនមែនជាការខាតបង់ដ៏ច្បាស់លាស់បំផុតទេឬ?

لَهُم مِّن فَوۡقِهِمۡ ظُلَلٞ مِّنَ ٱلنَّارِ وَمِن تَحۡتِهِمۡ
ظُلَلٞۚ ذَٰلِكَ يُخَوِّفُ ٱللَّهُ بِهِۦ عِبَادَهُۥۚ يَٰعِبَادِ

១៦-មានភ្លើងជាស្រទាប់ៗនៅពីលើពួកគេ និងនៅពីក្រោមពួកគេ។ (ទារុណកម្ម)នោះហើយដែលអល់ឡោះគំរាមខ្ញុំទាំងឡាយរបស់ទ្រង់ឱ្យភ័យខ្លាច។ ឱខ្ញុំទាំងឡាយរបស់យើង! ចូរពួកអ្នកកោត

فَاتَّقُونِ ﴿١٦﴾

ខ្លាចយើងចុះ ។

وَالَّذِينَ اجْتَنَبُوا الطَّاغُوتَ أَن يَعْبُدُوهَا وَأَنَابُوا إِلَى اللَّهِ لَهُمُ الْبُشْرَىٰ ۚ فَبَشِّرْ عِبَادِ ﴿١٧﴾

១៧-ហើយបណ្តាអ្នកដែលចៀសឆ្ងាយពីពួកស្ទៅតនដោយមិនគោរពសក្ការៈចំពោះពួកវា និងបានសារភាពទោសកំហុសទៅចំពោះអល់ឡោះ ពួកគេនឹងទទួលបានដំណឹងរីករាយ(ឋានសួគ៌) ។ ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)ផ្តល់ដំណឹងរីករាយនេះដល់បណ្តាខ្ញុំរបស់យើងចុះ ។

الَّذِينَ يَسْتَمِعُونَ الْقَوْلَ فَيَتَّبِعُونَ أَحْسَنَهُ ۚ أُولَٰئِكَ الَّذِينَ هَدَاهُمُ اللَّهُ ۖ وَأُولَٰئِكَ هُمْ أُولُو الْأَلْبَابِ ﴿١٨﴾

១៨-គឺបណ្តាអ្នកដែលស្តាប់នូវពាក្យសម្តី និងអនុវត្តតាមវាយ៉ាងល្អបំផុត ។ អ្នកទាំងនោះហើយដែលអល់ឡោះបានចង្អុលបង្ហាញដល់ពួកគេ ។ ហើយអ្នកទាំងនោះ ពួកគេក៏ជាបញ្ញាជនដែរ ។

أَفَمَنْ حَقَّ عَلَيْهِ كَلِمَةُ الْعَذَابِ أَفَأَنتَ تُنقِذُ مَن فِي النَّارِ ﴿١٩﴾

១៩-ដូច្នេះ តើអ្នកដែលទារុណកម្មបានកំណត់ធ្លាក់ទៅលើគេនោះ អ្នក(មូហាំម៉ាត់)អាចជួយសង្គ្រោះអ្នកដែលនៅក្នុងនរកបានឬ?

لَٰكِنِ الَّذِينَ اتَّقَوْا رَبَّهُمْ لَهُمْ غُرَفٌ مِّن فَوْقِهَا غُرَفٌ مَّبْنِيَّةٌ تَجْرِي مِن تَحْتِهَا الْأَنْهَارُ ۖ وَعْدَ اللَّهِ ۖ لَا يُخْلِفُ اللَّهُ الْمِيعَادَ ﴿٢٠﴾

២០-ផ្ទុយទៅវិញ បណ្តាអ្នកដែលកោតខ្លាចម្ចាស់របស់ពួកគេ សម្រាប់ពួកគេគឺវិមានដ៏ស្កឹមស្កៃជាច្រើនដែលនៅលើវាមានសំណង់វិមានជាច្រើនទៀតដែលមានទន្លេជាច្រើនហូរកាត់ពីក្រោមវា ។ នេះជាការសន្យារបស់អល់ឡោះ ។ អល់ឡោះមិនក្បត់សន្យាឡើយ ។

أَلَمْ تَرَ أَنَّ اللَّهَ أَنزَلَ مِنَ السَّمَاءِ مَاءً فَسَلَكَهُ يَنَابِيعَ فِي الْأَرْضِ ثُمَّ يُخْرِجُ بِهِ زَرْعًا مُّخْتَلِفًا أَلْوَانُهُ ثُمَّ يَهِيجُ فَتَرَاهُ مُصْفَرًّا ثُمَّ يَجْعَلُهُ حُطَامًا ۚ إِنَّ فِي ذَٰلِكَ لَذِكْرَىٰ لِأُولِي الْأَلْبَابِ ﴿٢١﴾

២១-តើអ្នកមិនបានឃើញទេឬ ពិតប្រាកដណាស់ អល់ឡោះបានបញ្ចុះទឹកភ្លៀងពីលើមេឃ ហើយទ្រង់បញ្ចូលវាទៅក្នុងដីឱ្យក្លាយជាប្រភពទឹក ។ បន្ទាប់មក ទ្រង់បញ្ចេញដំណាំដាំដុះដែលពណ៌របស់វាខុសៗគ្នាដោយសារវា ។ បន្ទាប់មកទៀតទ្រង់ធ្វើឱ្យវាស្ងួត ហើយអ្នកមើលឃើញវាពណ៌លឿង ។ ក្រោយមកទ្រង់ធ្វើឱ្យវារលាយខ្ទេចខ្ទីនោះ? ពិតប្រាកដណាស់ នៅក្នុងរឿងនោះជាការរំលឹកចំពោះបញ្ញាជនទាំងឡាយ ។

أَفَمَن شَرَحَ اللَّهُ صَدْرَهُ لِلْإِسْلَامِ فَهُوَ عَلَىٰ نُورٍ مِّن رَّبِّهِ ۚ فَوَيْلٌ لِّلْقَاسِيَةِ قُلُوبُهُم مِّن ذِكْرِ اللَّهِ ۚ أُولَٰئِكَ فِي ضَلَالٍ مُّبِينٍ ﴿٢٢﴾

២២-ដូច្នេះ តើអ្នកដែលអល់ឡោះបានបើកទ្រូងរបស់គេឱ្យទូលំទូលាយទៅរកសាសនាអ៊ីស្លាម រួចគេក៏បានទទួលពន្លឺពីម្ចាស់របស់គេនោះ(ដូចអ្នកដែលអល់ឡោះបានបោះត្រាភ្ជិតលើចិត្តរបស់គេឬ?) ។ ដូច្នេះ ភាពវិនាសអន្តរាយគឺសម្រាប់ពួកដែលចិត្តរបស់ពួក

គេមានភាពរឹងរូសមិនព្រមទទួលការរំលឹករបស់អល់ឡោះ ។ ពួកទាំងនោះគឺស្ថិតក្នុងភាពវង្វេងយ៉ាងច្បាស់លាស់ ។

ٱللَّهُ نَزَّلَ أَحۡسَنَ ٱلۡحَدِيثِ كِتَٰبٗا مُّتَشَٰبِهٗا مَّثَانِيَ تَقۡشَعِرُّ مِنۡهُ جُلُودُ ٱلَّذِينَ يَخۡشَوۡنَ رَبَّهُمۡ ثُمَّ تَلِينُ جُلُودُهُمۡ وَقُلُوبُهُمۡ إِلَىٰ ذِكۡرِ ٱللَّهِۚ ذَٰلِكَ هُدَى ٱللَّهِ يَهۡدِي بِهِۦ مَن يَشَآءُۚ وَمَن يُضۡلِلِ ٱللَّهُ فَمَا لَهُۥ مِنۡ هَادٍ ﴿٢٣﴾

២៣-អល់ឡោះបានបញ្ចុះពាក្យពេចន៍ដ៏ល្អប្រពៃជាគម្ពីរ (គួរអាន) ដែល (អាយ៉ាត់របស់វា) ប្រហាក់ប្រហែលគ្នាសាចុះសាឡើង ។ ស្បែករបស់បណ្តាអ្នកដែលកោតខ្លាចម្ចាស់របស់ពួកគេព្រឺញាប់ញ័រដោយសារវា (នៅពេលបានស្តាប់ឮឃ្លាទាំងនេះ) ។ បន្ទាប់មកស្បែករបស់ពួកគេ និងចិត្តរបស់ពួកគេនឹងទន់ភ្លន់ឆ្ពោះទៅរកការរំលឹករបស់អល់ឡោះ ។ នោះហើយគឺជាការចង្អុលបង្ហាញរបស់អល់ឡោះ ដែលទ្រង់ចង្អុលបង្ហាញតាមរយៈវាដល់អ្នកណាដែលទ្រង់មានចេតនា ។ ហើយអ្នកណាដែលអល់ឡោះធ្វើឱ្យវង្វេង គឺគ្មានអ្នកណាម្នាក់ចង្អុលបង្ហាញដល់គេឡើយ ។

أَفَمَن يَتَّقِي بِوَجۡهِهِۦ سُوٓءَ ٱلۡعَذَابِ يَوۡمَ ٱلۡقِيَٰمَةِۚ وَقِيلَ لِلظَّٰلِمِينَ ذُوقُواْ مَا كُنتُمۡ تَكۡسِبُونَ ﴿٢٤﴾

២៤-ដូច្នេះ តើអ្នកដែលប្រឈមមុខរបស់គេនឹងទារុណកម្មដ៏អាក្រក់នៅថ្ងៃបរលោកនោះ (ដូចអ្នកដែលបានចូលឋានសួគ៌ឬ?) ។ ហើយមានគេនិយាយទៅកាន់ពួកបំពានថា: ចូរពួកអ្នកភ្លក្ស (ទារុណកម្ម) នូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្តចុះ ។

كَذَّبَ ٱلَّذِينَ مِن قَبۡلِهِمۡ فَأَتَىٰهُمُ ٱلۡعَذَابُ مِنۡ حَيۡثُ لَا يَشۡعُرُونَ ﴿٢٥﴾

២៥-ពួកជំនាន់មុនពួកគេបានបដិសេធ (នឹងអ្នកនាំសាររបស់ពួកគេ) រួចមកទារុណកម្មបានមកដល់ពួកគេពីកន្លែងមួយដោយពួកគេមិនដឹងខ្លួនឡើយ ។

فَأَذَاقَهُمُ ٱللَّهُ ٱلۡخِزۡيَ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَاۖ وَلَعَذَابُ ٱلۡأٓخِرَةِ أَكۡبَرُۚ لَوۡ كَانُواْ يَعۡلَمُونَ ﴿٢٦﴾

២៦-ហើយអល់ឡោះបានឱ្យពួកគេភ្លក្សរសជាតិវេទនាដ៏អាម៉ាស់ក្នុងជីវិតលោកិយ ។ តែទារុណកម្មនៅថ្ងៃបរលោកវិញ ពិតជាធ្ងន់ធ្ងរជាងនេះទៅទៀតប្រសិនបើពួកគេបានដឹង ។

وَلَقَدۡ ضَرَبۡنَا لِلنَّاسِ فِي هَٰذَا ٱلۡقُرۡءَانِ مِن كُلِّ مَثَلٖ لَّعَلَّهُمۡ يَتَذَكَّرُونَ ﴿٢٧﴾

២៧-ហើយជាការពិតណាស់ យើងបានលើកគ្រប់ឧទាហរណ៍សម្រាប់មនុស្សលោកនៅក្នុងគម្ពីរគួរអាននេះដើម្បីឱ្យពួកគេយកធ្វើជាមេរៀន ។

قُرۡءَانًا عَرَبِيًّا غَيۡرَ ذِي عِوَجٖ لَّعَلَّهُمۡ يَتَّقُونَ ﴿٢٨﴾

២៨-(យើងបានបញ្ចុះ) គម្ពីរគួរអានជាភាសាអារ៉ាប់ដែលគ្មានភាពវៀចវេរឡើយ សង្ឃឹមថាពួកគេនឹងកោតខ្លាចយើង ។

ضَرَبَ ٱللَّهُ مَثَلٗا رَّجُلٗا فِيهِ شُرَكَآءُ

២៩-អល់ឡោះបានលើកឧទាហរណ៍បុរសម្នាក់មានចៅហ្វាយ

مُتَشَٰكِسُونَ وَرَجُلٗا سَلَمٗا لِّرَجُلٍ هَلۡ يَسۡتَوِيَانِ مَثَلًاۚ ٱلۡحَمۡدُ لِلَّهِۚ بَلۡ أَكۡثَرُهُمۡ لَا يَعۡلَمُونَ ٢٩

ជាច្រើននាក់ដែលទាស់ទែងគ្នាចំពោះរឿងរបស់គេ និងបុរសម្នាក់ទៀតមានចិត្តស្មោះត្រង់ចំពោះចៅហ្វាយតែម្នាក់។ តើការប្រៀបធៀបទាំងពីរនោះស្មើគ្នាដែរឬទេ? រាល់ការសរសើរគឺចំពោះអល់ឡោះ។ ផ្ទុយទៅវិញ ពួកគេភាគច្រើនមិនដឹងឡើយ។

إِنَّكَ مَيِّتٞ وَإِنَّهُم مَّيِّتُونَ ٣٠

៣០-ពិតប្រាកដណាស់ អ្នក(មូហាំម៉ាត់)នឹងស្លាប់ ហើយពិតប្រាកដណាស់ ពួកគេក៏នឹងស្លាប់ដែរ។

ثُمَّ إِنَّكُمۡ يَوۡمَ ٱلۡقِيَٰمَةِ عِندَ رَبِّكُمۡ تَخۡتَصِمُونَ ٣١

៣១-បន្ទាប់មក ពិតប្រាកដណាស់ ពួកអ្នកនឹងឈ្លោះប្រកែកគ្នានៅចំពោះមុខម្ចាស់របស់ពួកអ្នកនៅថ្ងៃបរលោក។

۞ فَمَنۡ أَظۡلَمُ مِمَّن كَذَبَ عَلَى ٱللَّهِ وَكَذَّبَ بِٱلصِّدۡقِ إِذۡ جَآءَهُۥٓۚ أَلَيۡسَ فِي جَهَنَّمَ مَثۡوٗى لِّلۡكَٰفِرِينَ ٣٢

៣២-ដូច្នេះ តើអ្នកណាដែលបំពានជាងអ្នកដែលបាននិយាយភូតកុហកចំពោះអល់ឡោះ និងបានបដិសេធនឹងការពិតនៅពេលដែលវាបានមកដល់គេទៀតនោះ? តើនៅក្នុងនរកជើហាន់ណាំមិនមែនជាកន្លែងសម្រាប់ពួកប្រឆាំងទេឬ?

وَٱلَّذِي جَآءَ بِٱلصِّدۡقِ وَصَدَّقَ بِهِۦٓ أُوْلَٰٓئِكَ هُمُ ٱلۡمُتَّقُونَ ٣٣

៣៣-រីឯអ្នកដែលនាំមកនូវការពិត និងអ្នកដែលបានជឿលើវា អ្នកទាំងនោះហើយគឺជាអ្នកដែលកោតខ្លាចអល់ឡោះ។

لَهُم مَّا يَشَآءُونَ عِندَ رَبِّهِمۡۚ ذَٰلِكَ جَزَآءُ ٱلۡمُحۡسِنِينَ ٣٤

៣៤-ពួកគេនឹងទទួលបាននូវអ្វីៗដែលពួកគេចង់បានពីម្ចាស់របស់ពួកគេ។ នោះហើយគឺជាការតបស្នងរបស់បណ្ដាអ្នកដែលសាងអំពើល្អ។

لِيُكَفِّرَ ٱللَّهُ عَنۡهُمۡ أَسۡوَأَ ٱلَّذِي عَمِلُواْ وَيَجۡزِيَهُمۡ أَجۡرَهُم بِأَحۡسَنِ ٱلَّذِي كَانُواْ يَعۡمَلُونَ ٣٥

៣៥-ដើម្បីអល់ឡោះនឹងលុបបំបាត់ពីពួកគេនូវទង្វើដ៏អាក្រក់ដែលពួកគេបានប្រព្រឹត្តកន្លងមក ហើយទ្រង់នឹងតបស្នងឱ្យពួកគេវិញនូវផលបុណ្យរបស់ពួកគេល្អប្រសើរជាងអ្វីដែលពួកគេធ្លាប់បានសាងទៅទៀត។

أَلَيۡسَ ٱللَّهُ بِكَافٍ عَبۡدَهُۥۖ وَيُخَوِّفُونَكَ بِٱلَّذِينَ مِن دُونِهِۦۚ وَمَن يُضۡلِلِ ٱللَّهُ فَمَا لَهُۥ مِنۡ هَادٖ ٣٦

៣៦-តើអល់ឡោះមិនមែនជាអ្នកថែរក្សាខ្ញុំរបស់ទ្រង់(មូហាំម៉ាត់)ទេឬ ខណៈដែលពួកគេបំភិតបំភ័យអ្នកពីសំណាក់ពួកផ្សេងពីទ្រង់(ព្រះនានាដែលពួកគេអះអាងថា ព្រះទាំងនោះអាចបង្កគ្រោះថ្នាក់ដល់អ្នក)នោះ? ហើយអ្នកណាដែលអល់ឡោះធ្វើឱ្យវង្វេងនោះ គឺគ្មានអ្នកណាម្នាក់ចង្អុលបង្ហាញដល់គេឡើយ។

وَمَن يَهْدِ ٱللَّهُ فَمَا لَهُۥ مِن مُّضِلٍّ ۗ أَلَيْسَ ٱللَّهُ
بِعَزِيزٍ ذِى ٱنتِقَامٍ ٣٧

៣៧-ហើយអ្នកណាដែលអល់ឡោះចង្អុលបង្ហាញនោះក៏គ្មានអ្នកណាម្នាក់អាចធ្វើឱ្យគេវង្វេងបានដែរ ។ តើអល់ឡោះមិនមែនជាអ្នកដែលមហាខ្លាំងពូកែ មានអានុភាពផ្តន្ទាទោសទេឬ?

وَلَئِن سَأَلْتَهُم مَّنْ خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ
لَيَقُولُنَّ ٱللَّهُ ۚ قُلْ أَفَرَءَيْتُم مَّا تَدْعُونَ مِن
دُونِ ٱللَّهِ إِنْ أَرَادَنِىَ ٱللَّهُ بِضُرٍّ هَلْ هُنَّ
كَٰشِفَٰتُ ضُرِّهِۦٓ أَوْ أَرَادَنِى بِرَحْمَةٍ هَلْ
هُنَّ مُمْسِكَٰتُ رَحْمَتِهِۦ ۚ قُلْ حَسْبِىَ ٱللَّهُ ۖ
عَلَيْهِ يَتَوَكَّلُ ٱلْمُتَوَكِّلُونَ ٣٨

៣៨-ហើយពិតប្រាកដណាស់ ប្រសិនបើអ្នក( មូហាំម៉ាត់)សួរពួកគេថា: តើអ្នកណាដែលបានបង្កើតមេឃជាច្រើនជាន់និងផែនដី ពួកគេប្រាកដជាឆ្លើយថា: គឺអល់ឡោះ ។ ចូរអ្នកពោលថា: ដូច្នេះតើពួកអ្នកបានឃើញអ្វីដែលពួកអ្នកបួងសួងសុំផ្សេងពីអល់ឡោះ ប្រសិនបើអល់ឡោះមានបំណងឱ្យខ្ញុំមានគ្រោះថ្នាក់ តើពួកវា( ព្រះនានា) អាចបំបាត់គ្រោះថ្នាក់របស់ទ្រង់នោះបានដែរឬទេ? ឬទ្រង់មានបំណងប្រទានក្តីមេត្តាករុណាដល់ខ្ញុំ តើពួកវាអាចរារាំងក្តីមេត្តាករុណារបស់ទ្រង់បានឬ? ចូរអ្នកពោលថា: អល់ឡោះគឺគ្រប់គ្រាន់ហើយសម្រាប់ខ្ញុំ ។ ចំពោះទ្រង់តែមួយគត់ដែលបណ្តាអ្នកដែលទុកចិត្តប្រគល់ការទុកចិត្ត ។

قُلْ يَٰقَوْمِ ٱعْمَلُوا۟ عَلَىٰ مَكَانَتِكُمْ إِنِّى
عَٰمِلٌ ۖ فَسَوْفَ تَعْلَمُونَ ٣٩

៣៩-ចូរអ្នកពោលថា: ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកអនុវត្តតាមមាគ៌ារបស់ពួកអ្នកចុះ ចំណែកខ្ញុំក៏អនុវត្តតាមមាគ៌ារបស់ខ្ញុំដែរ ។ ហើយពួកអ្នកគង់តែនឹងដឹងថា:

مَن يَأْتِيهِ عَذَابٌ يُخْزِيهِ وَيَحِلُّ عَلَيْهِ عَذَابٌ
مُّقِيمٌ ٤٠

៤០-អ្នកណាហើយដែលទារុណកម្មនឹងធ្លាក់ទៅលើគេ ធ្វើឱ្យគេវេទនាយ៉ាងអាម៉ាស់ ។ ហើយទារុណកម្មអមតៈនឹងធ្លាក់ទៅលើគេ ។

إِنَّآ أَنزَلْنَا عَلَيْكَ ٱلْكِتَٰبَ لِلنَّاسِ بِٱلْحَقِّ ۖ
فَمَنِ ٱهْتَدَىٰ فَلِنَفْسِهِۦ ۖ وَمَن ضَلَّ فَإِنَّمَا
يَضِلُّ عَلَيْهَا ۖ وَمَآ أَنتَ عَلَيْهِم بِوَكِيلٍ ٤١

៤១-ពិតប្រាកដណាស់ យើងបានបញ្ចុះគម្ពីរ( គួរអាន)ឱ្យអ្នក( មូហាំម៉ាត់)ដោយការពិតសម្រាប់មនុស្សលោក ។ ហើយអ្នកណាដែលទទួលបានការចង្អុលបង្ហាញនោះ គឺសម្រាប់ខ្លួនគេប៉ុណ្ណោះ ។ តែអ្នកណាដែលបានវង្វេងវិញ ពិតប្រាកដណាស់គេវង្វេងដោយខ្លួនឯង ។ ហើយអ្នកមិនមែនជាអ្នកទទួលខុសត្រូវលើពួកគេឡើយ ។

ٱللَّهُ يَتَوَفَّى ٱلْأَنفُسَ حِينَ مَوْتِهَا وَٱلَّتِى لَمْ
تَمُتْ فِى مَنَامِهَا ۖ فَيُمْسِكُ ٱلَّتِى قَضَىٰ عَلَيْهَا
ٱلْمَوْتَ وَيُرْسِلُ ٱلْأُخْرَىٰٓ إِلَىٰٓ أَجَلٍ مُّسَمًّى ۚ

៤២-អល់ឡោះគឺជាអ្នកដកយកព្រលឹងរាល់ៗរូបនៅពេលដែលវាស្លាប់ និងរូបដែលមិនទាន់ស្លាប់នៅពេលដែលវាដេកលក់ ។ ហើយទ្រង់រក្សាទុកព្រលឹងរបស់បុគ្គលណាដែលទ្រង់បានកំណត់ឱ្យវាស្លាប់ រួចទ្រង់បញ្ជូនព្រលឹងផ្សេងទៀត( ដែលដេកលក់) ឱ្យត្រឡប់មក( រករូប)វិញរហូតដល់ពេលកំណត់( ស្លាប់) ។ ពិតប្រាកដណាស់ នៅក្នុង

إِنَّ فِي ذَٰلِكَ لَآيَاتٍ لِّقَوْمٍ يَتَفَكَّرُونَ ﴿٤٢﴾

រឿងនោះគឺជាភស្តុតាងៗសម្រាប់ក្រុមដែលចេះគិតពិចារណា។

أَمِ اتَّخَذُوا مِن دُونِ اللَّهِ شُفَعَاءَ ۚ قُلْ أَوَلَوْ كَانُوا لَا يَمْلِكُونَ شَيْئًا وَلَا يَعْقِلُونَ ﴿٤٣﴾

៤៣-ផ្ទុយទៅវិញ ពួកគេបានយកអ្នកអន្តរាគមន៍(ព្រះនានា) ផ្សេងពីអល់ឡោះ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើទោះបីជាពួកវាគ្មានលទ្ធភាពអ្វីសោះនិងគ្មានសតិក៏ដោយឬ?

قُل لِّلَّهِ الشَّفَاعَةُ جَمِيعًا ۖ لَّهُ مُلْكُ السَّمَاوَاتِ وَالْأَرْضِ ۖ ثُمَّ إِلَيْهِ تُرْجَعُونَ ﴿٤٤﴾

៤៤-ចូរអ្នកពោលថាៈ ការធ្វើអន្តរាគមន៍ទាំងអស់គឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ការគ្រប់គ្រងមេឃជាច្រើនជាន់និងផែនដី គឺជាកម្មសិទ្ធិរបស់ទ្រង់។ បន្ទាប់មក ពួកអ្នកនឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់តែមួយគត់។

وَإِذَا ذُكِرَ اللَّهُ وَحْدَهُ اشْمَأَزَّتْ قُلُوبُ الَّذِينَ لَا يُؤْمِنُونَ بِالْآخِرَةِ ۖ وَإِذَا ذُكِرَ الَّذِينَ مِن دُونِهِ إِذَا هُمْ يَسْتَبْشِرُونَ ﴿٤٥﴾

៤៥-ហើយនៅពេលដែលមានគេរំលឹកពីអល់ឡោះជាម្ចាស់តែមួយគត់ ចិត្តរបស់ពួកដែលគ្មានជំនឿនឹងថ្ងៃបរលោកខ្ពើមរអើមយ៉ាងខ្លាំង។ តែនៅពេលដែលគេរំលឹកពីពួក(ព្រះនានា)ដែលផ្សេងពីទ្រង់ ស្រាប់តែពួកគេសប្បាយរីករាយ។

قُلِ اللَّهُمَّ فَاطِرَ السَّمَاوَاتِ وَالْأَرْضِ عَالِمَ الْغَيْبِ وَالشَّهَادَةِ أَنتَ تَحْكُمُ بَيْنَ عِبَادِكَ فِي مَا كَانُوا فِيهِ يَخْتَلِفُونَ ﴿٤٦﴾

៤៦-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ឱអល់ឡោះជាអ្នកដែលបានបង្កើតមេឃជាច្រើនជាន់និងផែនដី ជាអ្នកដឹងពីប្រការអាថ៌កំបាំង និងប្រការលាតត្រដាង! ទ្រង់ហើយដែលជាអ្នកកាត់សេចក្តីរវាងខ្ញុំទាំងឡាយរបស់ទ្រង់នូវអ្វីដែលពួកគេធ្លាប់ខ្វែងគំនិតគ្នាចំពោះវា។

وَلَوْ أَنَّ لِلَّذِينَ ظَلَمُوا مَا فِي الْأَرْضِ جَمِيعًا وَمِثْلَهُ مَعَهُ لَافْتَدَوْا بِهِ مِن سُوءِ الْعَذَابِ يَوْمَ الْقِيَامَةِ ۚ وَبَدَا لَهُم مِّنَ اللَّهِ مَا لَمْ يَكُونُوا يَحْتَسِبُونَ ﴿٤٧﴾

៤៧-ហើយពិតប្រាកដណាស់ ប្រសិនបើពួកដែលបំពានមានអ្វីៗគ្រប់បែបយ៉ាងនៅលើផែនដីនេះទ្វេដង ពួកគេពិតជានឹងយកទ្រព្យសម្បត្តិទាំងនោះទៅលោះខ្លួនរបស់ពួកគេពីទារុណកម្មដ៏អាក្រក់នៅថ្ងៃបរលោកជាមិនខាន។ ហើយអ្វីៗដែលពួកគេមិនធ្លាប់នឹកគិតនោះបានលាតត្រដាងចំពោះពួកគេតាមការរៀបចំរបស់អល់ឡោះ។

وَبَدَا لَهُمْ سَيِّئَاتُ مَا كَسَبُوا وَحَاقَ بِهِم مَّا كَانُوا بِهِ يَسْتَهْزِئُونَ ﴿٤٨﴾

៤៨-ហើយអំពើអាក្រក់ទាំងឡាយដែលពួកគេប្រព្រឹត្តកន្លងមកក៏បានលាតត្រដាងចំពោះពួកគេដែរ។ ហើយអ្វីៗ(ទារុណកម្ម)ដែលពួកគេធ្លាប់បានសើចចំអកនឹងវាបានហ៊ុមព័ទ្ធពួកគេ។

فَإِذَا مَسَّ الْإِنسَانَ ضُرٌّ دَعَانَا ثُمَّ إِذَا خَوَّلْنَاهُ

៤៩-ក្រោយមក នៅពេលដែលគ្រោះថ្នាក់បានបៀតបៀន

نِعۡمَةٗ مِّنَّا قَالَ إِنَّمَآ أُوتِيتُهُۥ عَلَىٰ عِلۡمِۭۚ بَلۡ هِيَ فِتۡنَةٞ وَلَٰكِنَّ أَكۡثَرَهُمۡ لَا يَعۡلَمُونَ ٤٩

មនុស្សលោក គេបានបួងសួងសុំពីយើង ។ បន្ទាប់មកនៅពេលដែលយើងបានប្រទានឱ្យគេនូវនេៀកម៉ាត់ពីយើងវិញនោះ គេបែរជានិយាយថាៈ តាមពិតគេបានផ្តល់វាឱ្យខ្ញុំ គឺដោយសារតែការចេះដឹងរបស់ខ្ញុំប៉ុណ្ណោះ ។ ផ្ទុយទៅវិញ វាគឺជាការសាកល្បងមួយ ក៏ប៉ុន្តែពួកគេភាគច្រើនមិនដឹងឡើយ ។

قَدۡ قَالَهَا ٱلَّذِينَ مِن قَبۡلِهِمۡ فَمَآ أَغۡنَىٰ عَنۡهُم مَّا كَانُواْ يَكۡسِبُونَ ٥٠

៥០-ជាការពិតណាស់ពួកជំនាន់មុនពួកគេក៏បាននិយាយដូចនោះដែរ ។ ដូច្នេះ អ្វីដែលពួកគេធ្លាប់ប្រឹងប្រែង(រកទ្រព្យសម្បត្តិ និងកូនចៅ) កន្លងមកមិនអាចការពារពួកគេ(ពីទារុណកម្ម) បានឡើយ ។

فَأَصَابَهُمۡ سَيِّـَٔاتُ مَا كَسَبُواْۚ وَٱلَّذِينَ ظَلَمُواْ مِنۡ هَٰٓؤُلَآءِ سَيُصِيبُهُمۡ سَيِّـَٔاتُ مَا كَسَبُواْ وَمَا هُم بِمُعۡجِزِينَ ٥١

៥១-ហើយអំពើអាក្រក់ទាំងឡាយដែលពួកគេបានសាងបានធ្លាក់ទៅលើពួកគេ ។ ហើយពួកដែលបានបំពានក្នុងចំណោមពួកទាំងនោះ(ពួកមូស្ហរីគីន) អំពើអាក្រក់ទាំងឡាយដែលពួកគេធ្លាប់បានសាងក៏នឹងធ្លាក់លើពួកគេដែរ ហើយពួកគេមិនអាចគេចផុតឡើយ ។

أَوَلَمۡ يَعۡلَمُوٓاْ أَنَّ ٱللَّهَ يَبۡسُطُ ٱلرِّزۡقَ لِمَن يَشَآءُ وَيَقۡدِرُۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ لِّقَوۡمٖ يُؤۡمِنُونَ ٥٢

៥២-តើពួកគេមិនបានដឹងទេថាៈ ពិតប្រាកដណាស់ អល់ឡោះបើកទូលាយ និងក្បិតក្បៀតលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនា ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាង១សម្រាប់ក្រុមដែលមានជំនឿ ។

۞ قُلۡ يَٰعِبَادِيَ ٱلَّذِينَ أَسۡرَفُواْ عَلَىٰٓ أَنفُسِهِمۡ لَا تَقۡنَطُواْ مِن رَّحۡمَةِ ٱللَّهِۚ إِنَّ ٱللَّهَ يَغۡفِرُ ٱلذُّنُوبَ جَمِيعًاۚ إِنَّهُۥ هُوَ ٱلۡغَفُورُ ٱلرَّحِيمُ ٥٣

៥៣-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ឱខ្ញុំទាំងឡាយរបស់យើងដែលបានបំពានលើខ្លួនឯង! ចូរពួកអ្នកកុំអស់សង្ឃឹមចំពោះក្តីមេត្តាករុណារបស់អល់ឡោះឱ្យសោះ ។ ពិតប្រាកដណាស់ អល់ឡោះនឹងអភ័យទោសនូវរាល់ទោសកំហុសទាំងអស់ ។ ពិតប្រាកដណាស់ទ្រង់ជាម្ចាស់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَأَنِيبُوٓاْ إِلَىٰ رَبِّكُمۡ وَأَسۡلِمُواْ لَهُۥ مِن قَبۡلِ أَن يَأۡتِيَكُمُ ٱلۡعَذَابُ ثُمَّ لَا تُنصَرُونَ ٥٤

៥៤-ចូរពួកអ្នកវិលត្រឡប់ដោយសារភាពទោសកំហុសទៅចំពោះម្ចាស់របស់ពួកអ្នក និងប្រគល់ខ្លួនចំពោះទ្រង់មុននឹងទារុណ-កម្មមកដល់ពួកអ្នក ។ បន្ទាប់មក ពួកអ្នកនឹងមិនត្រូវគេជួយឡើយ ។

وَٱتَّبِعُوٓاْ أَحۡسَنَ مَآ أُنزِلَ إِلَيۡكُم مِّن رَّبِّكُم مِّن قَبۡلِ أَن يَأۡتِيَكُمُ ٱلۡعَذَابُ بَغۡتَةٗ وَأَنتُمۡ لَا تَشۡعُرُونَ ٥٥

៥៥-ហើយចូរពួកអ្នកប្រតិបត្តិតាមអ្វីដែលល្អបំផុតដែលគេបានបញ្ចុះមកឱ្យពួកអ្នកពីម្ចាស់របស់ពួកអ្នកមុននឹងទារុណកម្មមកដល់ពួកអ្នកភ្លាមៗ ខណៈដែលពួកអ្នកមិនដឹងខ្លួននោះ ។

أَن تَقُولَ نَفۡسٞ يَٰحَسۡرَتَىٰ عَلَىٰ مَا فَرَّطتُ فِي
جَنۢبِ ٱللَّهِ وَإِن كُنتُ لَمِنَ ٱلسَّٰخِرِينَ ٥٦

៥៦-ដើម្បីកុំឱ្យបុគ្គលណាមួយនិយាយថាៈ គួរឱ្យសោកស្ដាយណាស់ខ្ញុំ ទៅលើអ្វីដែលខ្ញុំបានធ្វើឱ្យបាត់បង់នូវកាតព្វកិច្ចរបស់អល់ឡោះ ហើយពិតប្រាកដណាស់ ខ្ញុំស្ថិតក្នុងចំណោមពួកដែលចំអកមើលងាយ( សាសនារបស់អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់) ។

أَوۡ تَقُولَ لَوۡ أَنَّ ٱللَّهَ هَدَىٰنِي لَكُنتُ مِنَ
ٱلۡمُتَّقِينَ ٥٧

៥៧-ឬនិយាយថាៈ ពិតប្រាកដណាស់ ប្រសិនបើអល់ឡោះបានចង្អុលបង្ហាញខ្ញុំ ខ្ញុំពិតជាស្ថិតក្នុងចំណោមអ្នកដែលកោតខ្លាចអល់ឡោះជាមិនខាន ។

أَوۡ تَقُولَ حِينَ تَرَى ٱلۡعَذَابَ لَوۡ أَنَّ لِي
كَرَّةٗ فَأَكُونَ مِنَ ٱلۡمُحۡسِنِينَ ٥٨

៥៨-ឬនិយាយនៅពេលដែលគេឃើញទារុណកម្មថាៈ ពិតប្រាកដណាស់ ប្រសិនបើខ្ញុំមានឱកាសត្រឡប់ទៅលោកិយវិញ ខ្ញុំនឹងស្ថិតក្នុងចំណោមអ្នកដែលសាងអំពើល្អជាមិនខាន ។

بَلَىٰ قَدۡ جَآءَتۡكَ ءَايَٰتِي فَكَذَّبۡتَ بِهَا
وَٱسۡتَكۡبَرۡتَ وَكُنتَ مِنَ ٱلۡكَٰفِرِينَ ٥٩

៥៩-មិនដូច្នោះទេ ជាការពិតណាស់អាយ៉ាត់ៗរបស់យើងបានមកដល់អ្នក តែអ្នកបែរជាបានបដិសេធនឹងវា និងបានក្រអឺតក្រទមព្រមទាំងបានស្ថិតក្នុងចំណោមអ្នកដែលប្រឆាំងទៅវិញ ។

وَيَوۡمَ ٱلۡقِيَٰمَةِ تَرَى ٱلَّذِينَ كَذَبُواْ عَلَى ٱللَّهِ
وُجُوهُهُم مُّسۡوَدَّةٌۚ أَلَيۡسَ فِي جَهَنَّمَ مَثۡوٗى
لِّلۡمُتَكَبِّرِينَ ٦٠

៦០-ហើយនៅថ្ងៃបរលោក អ្នកនឹងឃើញពួកដែលភូតកុហកចំពោះអល់ឡោះ មុខរបស់ពួកគេខ្មៅងងឹត ។ តើនៅក្នុងនរកជើហាន់ណាំមិនមែនជាកន្លែងសម្រាប់ពួកដែលក្រអឺតក្រទមទេឬ?

وَيُنَجِّي ٱللَّهُ ٱلَّذِينَ ٱتَّقَوۡاْ بِمَفَازَتِهِمۡ لَا
يَمَسُّهُمُ ٱلسُّوٓءُ وَلَا هُمۡ يَحۡزَنُونَ ٦١

៦១-ហើយអល់ឡោះនឹងជួយសង្គ្រោះបណ្ដាអ្នកដែលកោតខ្លាចទ្រង់ ដោយសារភាពជ័យជំនះរបស់ពួកគេដែលទារុណកម្មមិនអាចបៀតបៀនពួកគេបានឡើយ ហើយពួកគេក៏មិនព្រួយបារម្ភដែរ ។

ٱللَّهُ خَٰلِقُ كُلِّ شَيۡءٖۖ وَهُوَ عَلَىٰ كُلِّ شَيۡءٖ
وَكِيلٞ ٦٢

៦២-អល់ឡោះគឺជាអ្នកដែលបានបង្កើតរាល់អ្វីៗទាំងអស់ ។ ហើយទ្រង់គឺជាអ្នកថែរក្សារាល់អ្វីៗទាំងអស់ ។

لَّهُۥ مَقَالِيدُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۗ وَٱلَّذِينَ
كَفَرُواْ بِـَٔايَٰتِ ٱللَّهِ أُوْلَٰٓئِكَ هُمُ
ٱلۡخَٰسِرُونَ ٦٣

៦៣-កូនសោមេឃជាច្រើនជាន់និងផែនដីជាកម្មសិទ្ធិរបស់ទ្រង់ ។ ហើយពួកដែលប្រឆាំងនឹងអាយ៉ាត់ៗរបស់អល់ឡោះ ពួកទាំងនោះហើយគឺជាពួកដែលខាតបង់ ។

قُلۡ أَفَغَيۡرَ ٱللَّهِ تَأۡمُرُوٓنِّيٓ أَعۡبُدُ أَيُّهَا

៦៤-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ដូច្នេះ តើពួកអ្នកបញ្ជាខ្ញុំ

ٱلۡجَٰهِلُونَ ﴿٦٤﴾

ឱ្យគោរពសក្ការៈក្រៅពីអល់ឡោះឬ ឱពួកល្ងង់ខ្លៅ!

وَلَقَدۡ أُوحِيَ إِلَيۡكَ وَإِلَى ٱلَّذِينَ مِن قَبۡلِكَ لَئِنۡ
أَشۡرَكۡتَ لَيَحۡبَطَنَّ عَمَلُكَ وَلَتَكُونَنَّ مِنَ
ٱلۡخَٰسِرِينَ ﴿٦٥﴾

៦៥-ហើយជាការពិតណាស់ គេបានផ្តល់វ៉ាហ៊ីឱ្យអ្នក(មូហាំ-ម៉ាត់) និងបណ្តាអ្នកដែលពីមុនអ្នក។ ពិតប្រាកដណាស់ ប្រសិនបើអ្នកបានធ្វើស្ទឹរិក ទង្វើល្អរបស់អ្នកពិតជារលាយសាបសូន្យ ហើយអ្នកនឹងស្ថិតក្នុងចំណោមអ្នកដែលខាតបង់ជាមិនខាន។

بَلِ ٱللَّهَ فَٱعۡبُدۡ وَكُن مِّنَ ٱلشَّٰكِرِينَ ﴿٦٦﴾

៦៦-ផ្ទុយទៅវិញ ចូរអ្នកគោរពសក្ការៈចំពោះអល់ឡោះ។ ហើយចូរអ្នកស្ថិតក្នុងចំណោមអ្នកដែលដឹងគុណ។

وَمَا قَدَرُواْ ٱللَّهَ حَقَّ قَدۡرِهِۦ وَٱلۡأَرۡضُ
جَمِيعٗا قَبۡضَتُهُۥ يَوۡمَ ٱلۡقِيَٰمَةِ وَٱلسَّمَٰوَٰتُ
مَطۡوِيَّٰتُۢ بِيَمِينِهِۦۚ سُبۡحَٰنَهُۥ وَتَعَٰلَىٰ عَمَّا
يُشۡرِكُونَ ﴿٦٧﴾

៦៧-ហើយពួកគេ(ពួកមូស្ទីរីគីន) មិនបានលើកតម្កើងអល់ឡោះឱ្យសមនឹងឋានៈពិតប្រាកដរបស់ទ្រង់ឡើយ ខណៈដែលផែនដីទាំងមូលស្ថិតក្នុងកណ្តាប់ដៃរបស់ទ្រង់នៅថ្ងៃបរលោក។ ហើយមេឃជាច្រើនជាន់ គឺត្រូវបានមូរដោយដៃស្តាំរបស់ទ្រង់។ ទ្រង់មហាស្អាតស្អំ និងខ្ពង់ខ្ពស់អំពីអ្វីដែលពួកគេកំពុងធ្វើស្ទឹរិក។

وَنُفِخَ فِي ٱلصُّورِ فَصَعِقَ مَن فِي ٱلسَّمَٰوَٰتِ
وَمَن فِي ٱلۡأَرۡضِ إِلَّا مَن شَآءَ ٱللَّهُۖ ثُمَّ نُفِخَ
فِيهِ أُخۡرَىٰ فَإِذَا هُمۡ قِيَامٞ يَنظُرُونَ ﴿٦٨﴾

៦៨-ហើយគេបានផ្លុំត្រែ ពេលនោះអ្នកដែលនៅលើមេឃជាច្រើនជាន់ និងអ្នកដែលនៅលើផែនដីបានស្លាប់ទាំងអស់ លើកលែងតែអ្នកណាដែលអល់ឡោះមានចេតនាប៉ុណ្ណោះ។ បន្ទាប់មកគេបានផ្លុំវាម្តងទៀត ពេលនោះពួកគេស្រាប់តែក្រោកឈររង់ចាំមើល(ការកាត់សេចក្តី)។

وَأَشۡرَقَتِ ٱلۡأَرۡضُ بِنُورِ رَبِّهَا وَوُضِعَ ٱلۡكِتَٰبُ
وَجِاْيٓءَ بِٱلنَّبِيِّـۧنَ وَٱلشُّهَدَآءِ وَقُضِيَ بَيۡنَهُم
بِٱلۡحَقِّ وَهُمۡ لَا يُظۡلَمُونَ ﴿٦٩﴾

៦៩-ហើយផែនដីបានបំភ្លឺដោយពន្លឺនៃម្ចាស់របស់វា។ ហើយសៀវភៅកំណត់ហេតុត្រូវបានគេចែកឱ្យ(រៀងៗខ្លួន)។ ហើយគេបាននាំមកនូវបណ្តាណាពីនិងបណ្តាសាក្សី។ រួចគេក៏បានកាត់សេចក្តីរវាងពួកគេដោយយុត្តិធម៌ ដោយពួកគេមិនត្រូវគេបំពានឡើយ។

وَوُفِّيَتۡ كُلُّ نَفۡسٖ مَّا عَمِلَتۡ وَهُوَ أَعۡلَمُ بِمَا
يَفۡعَلُونَ ﴿٧٠﴾

៧០-ហើយបុគ្គលគ្រប់រូបត្រូវបានគេផ្តល់ឱ្យយ៉ាងពេញលេញនូវអ្វីដែលគេបានប្រព្រឹត្ត ដោយទ្រង់ដឹងបំផុតនូវអ្វីដែលពួកគេប្រព្រឹត្ត។

وَسِيقَ ٱلَّذِينَ كَفَرُوٓاْ إِلَىٰ جَهَنَّمَ زُمَرًاۖ حَتَّىٰٓ
إِذَا جَآءُوهَا فُتِحَتۡ أَبۡوَٰبُهَا وَقَالَ لَهُمۡ

៧១-ហើយពួកដែលគ្មានជំនឿត្រូវបានគេកៀងទៅកាន់នរកជើហាន់ណាំទាំងហ្វូងៗ។ លុះនៅពេលដែលពួកគេបានមកដល់នរកនោះ គេក៏បានបើកទ្វារទាំងឡាយរបស់វា។ ហើយអ្នកយាម

خَزَنَتُهَآ أَلَمۡ يَأۡتِكُمۡ رُسُلٞ مِّنكُمۡ يَتۡلُونَ عَلَيۡكُمۡ
ءَايَٰتِ رَبِّكُمۡ وَيُنذِرُونَكُمۡ لِقَآءَ يَوۡمِكُمۡ هَٰذَاۚ
قَالُواْ بَلَىٰ وَلَٰكِنۡ حَقَّتۡ كَلِمَةُ ٱلۡعَذَابِ عَلَى
ٱلۡكَٰفِرِينَ ٧١

قِيلَ ٱدۡخُلُوٓاْ أَبۡوَٰبَ جَهَنَّمَ خَٰلِدِينَ فِيهَاۖ
فَبِئۡسَ مَثۡوَى ٱلۡمُتَكَبِّرِينَ ٧٢

وَسِيقَ ٱلَّذِينَ ٱتَّقَوۡاْ رَبَّهُمۡ إِلَى ٱلۡجَنَّةِ زُمَرًاۖ
حَتَّىٰٓ إِذَا جَآءُوهَا وَفُتِحَتۡ أَبۡوَٰبُهَا وَقَالَ لَهُمۡ
خَزَنَتُهَا سَلَٰمٌ عَلَيۡكُمۡ طِبۡتُمۡ فَٱدۡخُلُوهَا
خَٰلِدِينَ ٧٣

وَقَالُواْ ٱلۡحَمۡدُ لِلَّهِ ٱلَّذِي صَدَقَنَا وَعۡدَهُۥ
وَأَوۡرَثَنَا ٱلۡأَرۡضَ نَتَبَوَّأُ مِنَ ٱلۡجَنَّةِ حَيۡثُ
نَشَآءُۖ فَنِعۡمَ أَجۡرُ ٱلۡعَٰمِلِينَ ٧٤

وَتَرَى ٱلۡمَلَٰٓئِكَةَ حَآفِّينَ مِنۡ حَوۡلِ
ٱلۡعَرۡشِ يُسَبِّحُونَ بِحَمۡدِ رَبِّهِمۡۖ وَقُضِيَ بَيۡنَهُم
بِٱلۡحَقِّ وَقِيلَ ٱلۡحَمۡدُ لِلَّهِ رَبِّ ٱلۡعَٰلَمِينَ ٧٥

سورة غافر

ទ្វាររបស់វាបាននិយាយទៅកាន់ពួកគេថាៈ តើបណ្ដាអ្នកនាំសារក្នុងចំណោមពួកអ្នកមិនបានមកដល់ពួកអ្នកដោយពួកគេសូត្រឱ្យពួកអ្នកស្ដាប់នូវអាយ៉ាត់ៗនៃម្ចាស់របស់ពួកអ្នក ហើយពួកគេដាស់តឿនព្រមានចំពោះការជួបនៃថ្ងៃរបស់ពួកអ្នកនេះទេឬ? ពួកគេបាននិយាយថាៈ ពិតមែនហើយ ។ ក៏ប៉ុន្តែពាក្យសំដីដាក់ទារុណកម្មបានកំណត់ធ្លាក់ទៅលើពួកដែលគ្មានជំនឿ ។

៧២-មានគេនិយាយថាៈ ចូរពួកអ្នកចូលតាមទ្វារនានារបស់នរកជើហាន់ណាំ ដោយពួកអ្នកនឹងស្ថិតនៅក្នុងនោះជាអមតៈចុះ ។ ហើយកន្លែងរបស់ពួកដែលក្រអឺតក្រទមគឺអាក្រក់បំផុត ។

៧៣-ហើយបណ្ដាអ្នកដែលកោតខ្លាចម្ចាស់របស់ពួកគេត្រូវបានគេនាំទៅកាន់ឋានសួគ៌ជាក្រុមៗ ។ លុះនៅពេលដែលពួកគេបានមកដល់ឋានសួគ៌នោះ គេក៏បានបើកទ្វារទាំងឡាយរបស់វា ។ ហើយអ្នកយាមទ្វាររបស់វាបាននិយាយទៅកាន់ពួកគេថាៈ សូមសុខសន្តិភាពកើតមានចំពោះពួកអ្នក ពួកអ្នកមានសុភមង្គលហើយ ដូច្នេះចូរពួកអ្នកចូលទៅក្នុងឋានសួគ៌ដោយរស់នៅជាអមតៈចុះ ។

៧៤-ហើយពួកគេបាននិយាយថាៈ រាល់ការសរសើរគឺចំពោះអល់ឡោះ ដែលទ្រង់បានបំពេញកិច្ចសន្យារបស់ទ្រង់ចំពោះពួកយើង ។ ហើយទ្រង់បានប្រទានកេរមរតកឱ្យពួកយើងនូវទឹកដីឋានសួគ៌ដើម្បីពួកយើងរស់នៅទីណាក៏ដោយតាមតែពួកយើងចង់ ។ ដូច្នេះ ការតបស្នងរបស់បណ្ដាអ្នកដែលសាងអំពើល្អគឺល្អប្រសើរបំផុត ។

៧៥-ហើយអ្នក(មូហាំម៉ាត់)នឹងឃើញម៉ាឡាអ៊ីកាត់នៅព័ទ្ធជុំវិញអារ៉ស្ហ ដោយពួកគេលើកតម្កើងជាមួយនឹងការសរសើរចំពោះម្ចាស់របស់ពួកគេ ។ ហើយគេ(អល់ឡោះ)បានកាត់សេចក្ដីរវាងពួកគេដោយយុត្តិធម៌ ។ ហើយមានគេនិយាយថាៈ រាល់ការសរសើរគឺចំពោះអល់ឡោះជាម្ចាស់គ្រប់គ្រងពិភពទាំងអស់ ។

ជំពូកហ្គហ្វៀរ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-ហា មីម ។

២-ការបញ្ចុះគម្ពីរ(គួរអាន) នេះគឺមកពីអល់ឡោះដែលមហាខ្លាំងពូកែ មហាដឹង ។

៣-ទ្រង់ជាអ្នកអភ័យទោសនូវរាល់បាបកម្មទាំងឡាយនិងជាអ្នកទទួលការសារភាពកំហុស ជាអ្នកដាក់ទណ្ឌកម្មដ៏ធ្ងន់ធ្ងរ និងជាអ្នកដែលមានការប្រោសប្រទានបំផុត ។ គ្មានម្ចាស់ណាផ្សេងដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ ចំពោះទ្រង់តែមួយគត់ជាកន្លែងវិលត្រឡប់ ។

៤-គ្មានអ្នកណាម្នាក់ជជែកដេញដោលក្នុងអាយ៉ាត់ៗរបស់អល់ឡោះឡើយ លើកលែងតែពួកដែលប្រឆាំងប៉ុណ្ណោះ ។ ដូច្នេះចូរកុំឱ្យការចេញចូល(ធ្វើជំនួញ) របស់ពួកគេនៅក្នុងទឹកដីនេះបោកប្រាស់អ្នកឱ្យសោះ ។

៥-ក្រុមនួហ និងប្រជាជាតិជាច្រើនបន្ទាប់ពីពួកគេបានបដិសេធមុនពួកគេ(ពួកគ្មានជំនឿ) ទៅទៀត ។ ហើយរាល់ៗប្រជាជាតិមានបំណងអាក្រក់ចំពោះអ្នកនាំសាររបស់ពួកគេដើម្បីសម្លាប់គេ ។ ហើយពួកគេជជែកដេញដោលគ្នានឹងប្រការមិនពិត ដើម្បីបំបាត់ភាពពិតនឹងវា រួចយើងក៏បានដាក់ទណ្ឌកម្មពួកគេ ។ ដូច្នេះតើទណ្ឌកម្មរបស់យើងយ៉ាងដូចម្ដេចដែរ?

៦-ហើយដូច្នោះដែរ ការដាក់ទារុណកម្មនៃម្ចាស់របស់អ្នកបានកំណត់ធ្លាក់ទៅលើពួកដែលបានប្រឆាំង ។ ពិតប្រាកដណាស់ពួកគេគឺជាពួកនរក ។

៧-បណ្ដាអ្នក(ម៉ាឡាអ៊ីកាត់) ដែលទ្រអារ៉ស្ហ និងអ្នកដែលនៅជុំវិញវា ពួកគេលើកតម្កើងជាមួយនឹងការសរសើរចំពោះម្ចាស់របស់ពួកគេ ហើយពួកគេមានជំនឿលើទ្រង់ ។ ហើយពួកគេសុំអភ័យទោស(ពីអល់ឡោះ) ឱ្យបណ្ដាអ្នកដែលមានជំនឿថា: ឱម្ចាស់របស់ពួកយើង! ក្ដីមេត្តាករុណា និងចំណេះដឹងរបស់ទ្រង់បានគ្របដណ្ដប់

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

حمٓ ۝١

تَنزِيلُ ٱلۡكِتَٰبِ مِنَ ٱللَّهِ ٱلۡعَزِيزِ ٱلۡعَلِيمِ ۝٢

غَافِرِ ٱلذَّنۢبِ وَقَابِلِ ٱلتَّوۡبِ شَدِيدِ
ٱلۡعِقَابِ ذِي ٱلطَّوۡلِۖ لَآ إِلَٰهَ إِلَّا هُوَۖ إِلَيۡهِ
ٱلۡمَصِيرُ ۝٣

مَا يُجَٰدِلُ فِيٓ ءَايَٰتِ ٱللَّهِ إِلَّا ٱلَّذِينَ كَفَرُواْ فَلَا
يَغۡرُرۡكَ تَقَلُّبُهُمۡ فِي ٱلۡبِلَٰدِ ۝٤

كَذَّبَتۡ قَبۡلَهُمۡ قَوۡمُ نُوحٖ وَٱلۡأَحۡزَابُ مِنۢ
بَعۡدِهِمۡۖ وَهَمَّتۡ كُلُّ أُمَّةِۭ بِرَسُولِهِمۡ
لِيَأۡخُذُوهُۖ وَجَٰدَلُواْ بِٱلۡبَٰطِلِ لِيُدۡحِضُواْ بِهِ
ٱلۡحَقَّ فَأَخَذۡتُهُمۡۖ فَكَيۡفَ كَانَ عِقَابِ ۝٥

وَكَذَٰلِكَ حَقَّتۡ كَلِمَتُ رَبِّكَ عَلَى ٱلَّذِينَ
كَفَرُوٓاْ أَنَّهُمۡ أَصۡحَٰبُ ٱلنَّارِ ۝٦

ٱلَّذِينَ يَحۡمِلُونَ ٱلۡعَرۡشَ وَمَنۡ حَوۡلَهُۥ يُسَبِّحُونَ
بِحَمۡدِ رَبِّهِمۡ وَيُؤۡمِنُونَ بِهِۦ وَيَسۡتَغۡفِرُونَ لِلَّذِينَ
ءَامَنُواْ رَبَّنَا وَسِعۡتَ كُلَّ شَيۡءٖ رَّحۡمَةٗ
وَعِلۡمٗا فَٱغۡفِرۡ لِلَّذِينَ تَابُواْ وَٱتَّبَعُواْ سَبِيلَكَ

وَقِهِمۡ عَذَابَ ٱلۡجَحِيمِ ٧

រាល់អ្វីៗទាំងអស់ ។ ដូច្នេះ សូមទ្រង់មេត្តាអភ័យទោសចំពោះបណ្តាអ្នកដែលបានសារភាពកំហុស និងបានតាមមាគ៌ារបស់ទ្រង់ផង ហើយសូមទ្រង់មេត្តាថែរក្សាពួកគេពីទារុណកម្មនៃនរកជើហ៊ីមផង ។

رَبَّنَا وَأَدۡخِلۡهُمۡ جَنَّٰتِ عَدۡنٍ ٱلَّتِي
وَعَدتَّهُمۡ وَمَن صَلَحَ مِنۡ ءَابَآئِهِمۡ وَأَزۡوَٰجِهِمۡ
وَذُرِّيَّٰتِهِمۡۚ إِنَّكَ أَنتَ ٱلۡعَزِيزُ ٱلۡحَكِيمُ ٨

៨-ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាបញ្ចូលពួកគេទៅក្នុងឋានសួគ៌អាត់និន ដែលទ្រង់បានសន្យាចំពោះពួកគេ និងអ្នកដែលបានសាងអំពើល្អត្រឹមត្រូវក្នុងចំណោមជីដូនជីតារបស់ពួកគេ និងភរិយារបស់ពួកគេ ហើយនិងកូនចៅរបស់ពួកគេផង ។ ពិតប្រាកដណាស់ ទ្រង់គឺជាម្ចាស់ដែលមហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

وَقِهِمُ ٱلسَّيِّـَٔاتِۚ وَمَن تَقِ ٱلسَّيِّـَٔاتِ يَوۡمَئِذٖ
فَقَدۡ رَحِمۡتَهُۥۚ وَذَٰلِكَ هُوَ ٱلۡفَوۡزُ ٱلۡعَظِيمُ ٩

៩-ហើយសូមទ្រង់មេត្តាថែរក្សាពួកគេអំពីប្រការអាក្រក់ទាំងឡាយផង ។ ហើយអ្នកណាដែលទ្រង់ថែរក្សាអំពីប្រការអាក្រក់ទាំងឡាយនៅថ្ងៃនោះ(បរលោក) គឺទ្រង់ពិតជាបានផ្តល់ក្តីមេត្តាករុណាដល់គេ ។ ហើយនោះគឺជាជ័យជំនះដ៏ធំធេង ។

إِنَّ ٱلَّذِينَ كَفَرُواْ يُنَادَوۡنَ لَمَقۡتُ ٱللَّهِ
أَكۡبَرُ مِن مَّقۡتِكُمۡ أَنفُسَكُمۡ إِذۡ تُدۡعَوۡنَ
إِلَى ٱلۡإِيمَٰنِ فَتَكۡفُرُونَ ١٠

១០-ពិតប្រាកដណាស់ ពួកដែលប្រឆាំងត្រូវបានគេប្រាប់ថា: ការស្អប់ខ្ពើមរបស់អល់ឡោះ គឺពិតជាធំធេងជាងការស្អប់ខ្ពើមរបស់ពួកអ្នកចំពោះខ្លួនឯងទៅទៀត នៅពេលដែលពួកអ្នកត្រូវបានគេអំពាវនាវទៅរកភាពមានជំនឿ ពួកអ្នកបែរជាគ្មានជំនឿនោះ ។

قَالُواْ رَبَّنَآ أَمَتَّنَا ٱثۡنَتَيۡنِ وَأَحۡيَيۡتَنَا ٱثۡنَتَيۡنِ
فَٱعۡتَرَفۡنَا بِذُنُوبِنَا فَهَلۡ إِلَىٰ خُرُوجٖ مِّن
سَبِيلٖ ١١

១១-ពួកគេបានឆ្លើយថា: ឱម្ចាស់របស់ពួកយើង! ទ្រង់បានធ្វើឱ្យពួកយើងស្លាប់ចំនួនពីរដង(ទីមួយមុនមានព្រលឹង ទីពីរពេលស្លាប់) ហើយទ្រង់បានធ្វើឱ្យពួកយើងរស់ចំនួនពីរដង(ទីមួយពេលដែលយើងកើតពីផ្ទៃម្តាយ ទីពីរថ្ងៃដែលយើងកើតចេញពីផ្នូរ) ហើយពួកយើងក៏បានទទួលស្គាល់នូវបាបកម្មរបស់ពួកយើងដែរ ។ ដូច្នេះ តើមានមធ្យោបាយណាដែលអាច(ឱ្យពួកយើង)ចេញពីនរកបានដែរឬទេ?

ذَٰلِكُم بِأَنَّهُۥٓ إِذَا دُعِيَ ٱللَّهُ وَحۡدَهُۥ كَفَرۡتُمۡ
وَإِن يُشۡرَكۡ بِهِۦ تُؤۡمِنُواْۚ فَٱلۡحُكۡمُ لِلَّهِ ٱلۡعَلِيِّ
ٱلۡكَبِيرِ ١٢

១២-នោះគឺដោយសារតែនៅពេលដែលគេអំពាវនាវពួកអ្នកទៅកាន់អល់ឡោះតែមួយគត់ ពួកអ្នកបែរជាប្រឆាំង ។ តែប្រសិនបើមានគេធ្វើស្ហ៊ីរិកនឹងទ្រង់ ពួកអ្នកបែរជាមានជំនឿទៅវិញ ។ ដូច្នេះ ការកាត់សេចក្តីគឺជាកម្មសិទ្ធិរបស់អល់ឡោះដែលមហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម ។

هُوَ ٱلَّذِى يُرِيكُمْ ءَايَـٰتِهِۦ وَيُنَزِّلُ لَكُم
مِّنَ ٱلسَّمَآءِ رِزْقًاۚ وَمَا يَتَذَكَّرُ إِلَّا مَن
يُنِيبُ ﴿١٣﴾

១៣-ទ្រង់ជាអ្នកដែលបង្ហាញឱ្យពួកអ្នកឃើញនូវភស្តុតាងនានារបស់ទ្រង់ និងជាអ្នកដែលបញ្ចុះលាភសក្ការៈពីលើមេឃឱ្យពួកអ្នក ។ ហើយគ្មានអ្នកណាម្នាក់ចងចាំឡើយ លើកលែងតែអ្នកដែលវិលត្រឡប់( ទៅកាន់អល់ឡោះ) ប៉ុណ្ណោះ ។

فَٱدْعُوا۟ ٱللَّهَ مُخْلِصِينَ لَهُ ٱلدِّينَ وَلَوْ كَرِهَ
ٱلْكَـٰفِرُونَ ﴿١٤﴾

១៤-ដូច្នេះ ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ ដោយចិត្តស្មោះត្រង់ក្នុងការប្រណិប័តន៍ចំពោះទ្រង់ ទោះបីជាពួកគ្មានជំនឿស្អប់ខ្ពើមយ៉ាងណាក៏ដោយ ។

رَفِيعُ ٱلدَّرَجَـٰتِ ذُو ٱلْعَرْشِ يُلْقِى ٱلرُّوحَ مِنْ
أَمْرِهِۦ عَلَىٰ مَن يَشَآءُ مِنْ عِبَادِهِۦ لِيُنذِرَ يَوْمَ
ٱلتَّلَاقِ ﴿١٥﴾

១៥-ទ្រង់ជាអ្នកដែលមានឋានៈខ្ពង់ខ្ពស់ ជាម្ចាស់នៃអារ៉ស្ហ ទ្រង់បញ្ចុះវ៉ាហ៊ីតាមបទបញ្ជារបស់ទ្រង់ទៅលើអ្នកណាដែលទ្រង់មានចេតនាក្នុងចំណោមខ្ញុំទាំងឡាយរបស់ទ្រង់ ដើម្បីឱ្យគេដាស់តឿនព្រមានអំពីថ្ងៃជួបជុំគ្នា( ថ្ងៃបរលោក) ។

يَوْمَ هُم بَـٰرِزُونَۖ لَا يَخْفَىٰ عَلَى ٱللَّهِ مِنْهُمْ
شَىْءٌۚ لِّمَنِ ٱلْمُلْكُ ٱلْيَوْمَۖ لِلَّهِ ٱلْوَٰحِدِ
ٱلْقَهَّارِ ﴿١٦﴾

១៦-គឺជាថ្ងៃមួយដែលពួកគេបង្ហាញខ្លួន( ចេញពីផ្នូរ) ដោយគ្មានអ្វីមួយក្នុងចំណោមពួកគេអាចលាក់បាំងពីអល់ឡោះបានឡើយ ។ ( អល់ឡោះសួរថា) តើការគ្រប់គ្រងនៅថ្ងៃនេះជាកម្មសិទ្ធិរបស់អ្នកណា? ( ទ្រង់បានតបដោយអង្គឯងថា) គឺជាកម្មសិទ្ធិរបស់អល់ឡោះជាម្ចាស់តែមួយគត់ដែលមហាខ្លាំងក្លា ។

ٱلْيَوْمَ تُجْزَىٰ كُلُّ نَفْسٍۭ بِمَا كَسَبَتْۚ لَا
ظُلْمَ ٱلْيَوْمَۚ إِنَّ ٱللَّهَ سَرِيعُ ٱلْحِسَابِ ﴿١٧﴾

១៧-នៅថ្ងៃនេះ បុគ្គលគ្រប់រូបនឹងត្រូវគេតបស្នងនូវអ្វីដែលគេបានប្រព្រឹត្ត ។ គ្មានការបំពានឡើយនៅថ្ងៃនេះ ។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកជំនុំជំរះយ៉ាងរហ័សបំផុត ។

وَأَنذِرْهُمْ يَوْمَ ٱلْـَٔازِفَةِ إِذِ ٱلْقُلُوبُ لَدَى
ٱلْحَنَاجِرِ كَـٰظِمِينَۚ مَا لِلظَّـٰلِمِينَ مِنْ حَمِيمٍ وَلَا
شَفِيعٍ يُطَاعُ ﴿١٨﴾

១៨-ហើយចូរអ្នក( មូហាំម៉ាត់) ដាស់តឿនព្រមានពួកគេអំពីថ្ងៃមួយ( ថ្ងៃបរលោក) ដែលជិតបំផុត នៅពេលដែលបេះដូងពុះកញ្ជ្រោលឡើងដល់ដើមកដោយភាពទុក្ខព្រួយ ។ សម្រាប់ពួកបំពានគ្មានមិត្តជិតស្និទ្ធ និងគ្មានអ្នកជួយអន្តរាគមន៍ណាដែលត្រូវគេទទួលយកឡើយ ។

يَعْلَمُ خَآئِنَةَ ٱلْأَعْيُنِ وَمَا تُخْفِى ٱلصُّدُورُ ﴿١٩﴾

១៩-ទ្រង់ដឹងនូវភាពក្បត់នៃកែវភ្នែក( មើលប្រការហាមឃាត់) និងអ្វីដែលលាក់កំបាំងនៅក្នុងចិត្ត ។

وَٱللَّهُ يَقْضِى بِٱلْحَقِّۖ وَٱلَّذِينَ يَدْعُونَ مِن

២០-ហើយអល់ឡោះគឺជាអ្នកកាត់សេចក្ដីដោយយុត្តិធម៌ ។ ហើយពួក( ព្រះនានា) ដែលពួកគេបួងសួងសុំផ្សេងពីទ្រង់នោះ ពួក

دُونِهِۦ لَا يَقْضُونَ بِشَيْءٍۗ إِنَّ ٱللَّهَ هُوَ ٱلسَّمِيعُ ٱلْبَصِيرُ ﴿٢٠﴾

វាមិនអាចកាត់សេចក្តីអ្វីបានឡើយ ។ ពិតប្រាកដណាស់ អល់ឡោះទ្រង់មហាឮ មហាឃើញ ។

۞ أَوَلَمْ يَسِيرُواْ فِي ٱلْأَرْضِ فَيَنظُرُواْ كَيْفَ كَانَ عَٰقِبَةُ ٱلَّذِينَ كَانُواْ مِن قَبْلِهِمْۚ كَانُواْ هُمْ أَشَدَّ مِنْهُمْ قُوَّةً وَءَاثَارًا فِي ٱلْأَرْضِ فَأَخَذَهُمُ ٱللَّهُ بِذُنُوبِهِمْ وَمَا كَانَ لَهُم مِّنَ ٱللَّهِ مِن وَاقٍ ﴿٢١﴾

២១-តើពួកគេ( អារ៉ាប់ម៉ាក្កះ) មិនបានធ្វើដំណើរនៅលើផែនដី និងពិនិត្យមើលទេឬ តើលទ្ធផលចុងក្រោយរបស់ពួក( ក្រុមអាដ និងសាមូដ) ដែលពីមុនពួកគេនោះយ៉ាងដូចម្តេចដែរ? ពួកគេ( ក្រុមអាដនិងសាមូដ) គឺជាអ្នកដែលមានកម្លាំងខ្លាំងក្លា និងបានបន្សល់ទុកកេរដំណែលនៅលើផែនដីច្រើនជាងពួកគេ( អារ៉ាប់ម៉ាក្កះ) ទៅទៀត ។ ពេលនោះ អល់ឡោះក៏បានយកជីវិតពួកគេដោយសារបាបកម្មទាំងឡាយរបស់ពួកគេ ។ ហើយពួកគេគ្មានអ្នកការពារពី( ទារុណកម្ម) អល់ឡោះឡើយ ។

ذَٰلِكَ بِأَنَّهُمْ كَانَت تَّأْتِيهِمْ رُسُلُهُم بِٱلْبَيِّنَٰتِ فَكَفَرُواْ فَأَخَذَهُمُ ٱللَّهُۚ إِنَّهُۥ قَوِيٌّ شَدِيدُ ٱلْعِقَابِ ﴿٢٢﴾

២២-នោះគឺដោយសារតែបណ្តាអ្នកនាំសាររបស់ពួកគេបាននាំមកដល់ពួកគេនូវភស្តុតាងជាក់ច្បាស់ជាច្រើន ពេលនោះពួកគេបានប្រឆាំង ហើយអល់ឡោះក៏បានយកជីវិតពួកគេ ។ ពិតប្រាកដណាស់ទ្រង់មហាខ្លាំងក្លា ជាអ្នកដាក់ទណ្ឌកម្មដ៏ធ្ងន់ធ្ងរ ។

وَلَقَدْ أَرْسَلْنَا مُوسَىٰ بِـَٔايَٰتِنَا وَسُلْطَٰنٍ مُّبِينٍ ﴿٢٣﴾

២៣-ហើយជាការពិតណាស់ យើងបានបញ្ជូនមូសាជាមួយនឹងមុជីហ្សាត់របស់យើងនិងភស្តុតាងដ៏ច្បាស់លាស់ ។

إِلَىٰ فِرْعَوْنَ وَهَٰمَٰنَ وَقَٰرُونَ فَقَالُواْ سَٰحِرٌ كَذَّابٌ ﴿٢٤﴾

២៤-ទៅកាន់ហ្វៀរអោន និងហាម៉ាន ហើយនិងការូន តែពួកគេបាននិយាយថាៈ គេ( មូសា) ជាគ្រូមន្តអាគមជាអ្នកភូតកុហកទៅវិញ ។

فَلَمَّا جَآءَهُم بِٱلْحَقِّ مِنْ عِندِنَا قَالُواْ ٱقْتُلُوٓاْ أَبْنَآءَ ٱلَّذِينَ ءَامَنُواْ مَعَهُۥ وَٱسْتَحْيُواْ نِسَآءَهُمْۚ وَمَا كَيْدُ ٱلْكَٰفِرِينَ إِلَّا فِي ضَلَٰلٍ ﴿٢٥﴾

២៥-ហើយនៅពេលដែលគាត់បាននាំការពិតពីយើងមកដល់ពួកគេ ពួកគេបាននិយាយថាៈ ចូរពួកអ្នកសម្លាប់កូនប្រុសរបស់ពួកដែលមានជំនឿរួមជាមួយគាត់ និងទុកជីវិតកូនស្រីរបស់ពួកគេចុះ ។ ហើយឧបាយកលរបស់ពួកដែលប្រឆាំងនោះគឺគ្មានអ្វីក្រៅពីភាពវង្វេងឡើយ ។

وَقَالَ فِرْعَوْنُ ذَرُونِيٓ أَقْتُلْ مُوسَىٰ وَلْيَدْعُ رَبَّهُۥٓۖ إِنِّيٓ أَخَافُ أَن يُبَدِّلَ دِينَكُمْ أَوْ أَن

២៦-ហើយហ្វៀរអោនបាននិយាយថាៈ ចូរពួកអ្នកទុកឱ្យខ្ញុំសម្លាប់មូសា ហើយឱ្យគេបួងសួងសុំពីម្ចាស់របស់គេចុះ ។ ពិតប្រាកដណាស់ ខ្ញុំបារម្ភខ្លាចគេផ្លាស់ប្តូរសាសនារបស់ពួកអ្នក ឬបង្កភាព

يُظۡهِرَ فِي ٱلۡأَرۡضِ ٱلۡفَسَادَ ﴿٢٦﴾

វិនាសកម្មនៅលើផែនដីនេះ ។

وَقَالَ مُوسَىٰٓ إِنِّي عُذۡتُ بِرَبِّي وَرَبِّكُم مِّن كُلِّ مُتَكَبِّرٖ لَّا يُؤۡمِنُ بِيَوۡمِ ٱلۡحِسَابِ ﴿٢٧﴾

២៧-ហើយមូសាបានតបថា: ពិតប្រាកដណាស់ ខ្ញុំសុំពីម្ចាស់របស់ខ្ញុំ និងម្ចាស់របស់ពួកអ្នកឱ្យបញ្ចៀសរូបខ្ញុំពីរាល់ៗអ្នកក្រអឺតក្រទមដែលមិនជឿនឹងថ្ងៃជំនុំជំរះ ។

وَقَالَ رَجُلٞ مُّؤۡمِنٞ مِّنۡ ءَالِ فِرۡعَوۡنَ يَكۡتُمُ إِيمَٰنَهُۥٓ أَتَقۡتُلُونَ رَجُلًا أَن يَقُولَ رَبِّيَ ٱللَّهُ وَقَدۡ جَآءَكُم بِٱلۡبَيِّنَٰتِ مِن رَّبِّكُمۡۖ وَإِن يَكُ كَٰذِبٗا فَعَلَيۡهِ كَذِبُهُۥۖ وَإِن يَكُ صَادِقٗا يُصِبۡكُم بَعۡضُ ٱلَّذِي يَعِدُكُمۡۖ إِنَّ ٱللَّهَ لَا يَهۡدِي مَنۡ هُوَ مُسۡرِفٞ كَذَّابٞ ﴿٢٨﴾

២៨-ហើយបុរសមានជំនឿម្នាក់នៃពូជពង្សរបស់ហ្វៀរអោនដែលលាក់បាំងជំនឿរបស់គេបាននិយាយថា: តើពួកអ្នកចង់សម្លាប់បុរសម្នាក់ដែលគេពោលថា: ម្ចាស់របស់ខ្ញុំគឺអល់ឡោះឬ? ហើយជាការពិតណាស់ គេបាននាំមកឱ្យពួកអ្នកនូវភស្តុតាងជាច្រើនពីម្ចាស់របស់ពួកអ្នក ។ ហើយប្រសិនបើគេជាអ្នកភូតកុហក គឺគេនឹងទទួលខុសត្រូវ(បាបកម្ម)ចំពោះការភូតកុហករបស់គេ ។ តែប្រសិនបើគេជាអ្នកនិយាយពិតវិញ អ្វីៗ(ទារុណកម្ម)មួយចំនួនដែលគេព្រមានពួកអ្នកនោះនឹងធ្លាក់ទៅលើពួកអ្នកជាមិនខាន ។ ពិតប្រាកដណាស់ អល់ឡោះមិនចង្អុលបង្ហាញចំពោះអ្នកណាដែលបំពាននិងភូតកុហកនោះឡើយ ។

يَٰقَوۡمِ لَكُمُ ٱلۡمُلۡكُ ٱلۡيَوۡمَ ظَٰهِرِينَ فِي ٱلۡأَرۡضِ فَمَن يَنصُرُنَا مِنۢ بَأۡسِ ٱللَّهِ إِن جَآءَنَاۚ قَالَ فِرۡعَوۡنُ مَآ أُرِيكُمۡ إِلَّا مَآ أَرَىٰ وَمَآ أَهۡدِيكُمۡ إِلَّا سَبِيلَ ٱلرَّشَادِ ﴿٢٩﴾

២៩-(បុរសនោះបាននិយាយទៀតថា) ឱក្រុមរបស់ខ្ញុំ! អំណាចនៅថ្ងៃនេះជាកម្មសិទ្ធិរបស់ពួកអ្នក ដោយពួកអ្នកជាអ្នកគ្រប់គ្រងនៅលើផែនដីនេះ ។ ដូច្នេះ តើអ្នកណាអាចជួយពួកយើងពីទណ្ឌកម្មរបស់អល់ឡោះបាន ប្រសិនបើវាបានធ្លាក់មកលើពួកយើងនោះ? ហ្វៀរអោនបាននិយាយថា: ខ្ញុំគ្មានអ្វីបង្ហាញពួកអ្នកក្រៅពីអ្វីដែលខ្ញុំឃើញនោះឡើយ ហើយខ្ញុំក៏មិនចង្អុលបង្ហាញពួកអ្នកក្រៅពីមាគ៌ាដែលត្រឹមត្រូវនោះដែរ ។

وَقَالَ ٱلَّذِيٓ ءَامَنَ يَٰقَوۡمِ إِنِّيٓ أَخَافُ عَلَيۡكُم مِّثۡلَ يَوۡمِ ٱلۡأَحۡزَابِ ﴿٣٠﴾

៣០-ហើយអ្នកដែលមានជំនឿនោះបាននិយាយទៀតថា: ឱក្រុមរបស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំបារម្ភខ្លាចពួកអ្នកត្រូវ(ទណ្ឌកម្ម)ដូចថ្ងៃនៃក្រុមជំនាន់មុន ។

مِثۡلَ دَأۡبِ قَوۡمِ نُوحٖ وَعَادٖ وَثَمُودَ وَٱلَّذِينَ مِنۢ بَعۡدِهِمۡۚ وَمَا ٱللَّهُ يُرِيدُ ظُلۡمٗا لِّلۡعِبَادِ ﴿٣١﴾

៣១-ដូចជាស្ថានភាពរបស់ក្រុមនួហ និងអាដ និងសាមូដ ហើយនិងពួកជំនាន់ក្រោយពួកគេ ។ ហើយអល់ឡោះគ្មានបំណងបំពានលើខ្ញុំទាំងឡាយឡើយ ។

وَيَـٰقَوۡمِ إِنِّيٓ أَخَافُ عَلَيۡكُمۡ يَوۡمَ ٱلتَّنَادِ ﴿٣٢﴾

៣២-ហើយ(បុរសនោះបាននិយាយថា) ឱក្រុមរបស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំបារម្ភខ្លាចពួកអ្នកត្រូវ(ទារុណកម្ម)នាថ្ងៃដែលមនុស្សលោកហៅគ្នាទៅវិញទៅមក(ថ្ងៃបរលោក) ។

يَوۡمَ تُوَلُّونَ مُدۡبِرِينَ مَا لَكُم مِّنَ ٱللَّهِ مِنۡ
عَاصِمٖۗ وَمَن يُضۡلِلِ ٱللَّهُ فَمَا لَهُۥ مِنۡ
هَادٖ ﴿٣٣﴾

៣៣-គឺថ្ងៃដែលពួកអ្នករត់ចេញដោយបែរខ្នងដាក់គ្នា ។ ពួកអ្នកគ្មានអ្នកជួយសង្គ្រោះពី(ទារុណកម្ម) អល់ឡោះឡើយ ។ ហើយអ្នកណាដែលអល់ឡោះធ្វើឱ្យវង្វេងនោះ គឺគ្មានអ្នកណាចង្អុលបង្ហាញគេឡើយ ។

وَلَقَدۡ جَآءَكُمۡ يُوسُفُ مِن قَبۡلُ بِٱلۡبَيِّنَٰتِ
فَمَا زِلۡتُمۡ فِي شَكّٖ مِّمَّا جَآءَكُم بِهِۦۖ حَتَّىٰٓ
إِذَا هَلَكَ قُلۡتُمۡ لَن يَبۡعَثَ ٱللَّهُ مِنۢ بَعۡدِهِۦ
رَسُولٗاۚ كَذَٰلِكَ يُضِلُّ ٱللَّهُ مَنۡ هُوَ مُسۡرِفٞ
مُّرۡتَابٌ ﴿٣٤﴾

៣៤-ហើយជាការពិតណាស់ យូសុហ្វបាននាំមកឱ្យពួកអ្នកនូវភស្តុតាងដ៏ច្បាស់លាស់ជាច្រើនតាំងពីមុន(មូសា) មកម្ល៉េះ តែពួកអ្នកនៅតែមានការសង្ស័យអំពីអ្វីដែលគេបាននាំវាមកឱ្យពួកអ្នកដដែល ។ លុះនៅពេលដែលគេបានស្លាប់ ពួកអ្នកបែរជានិយាយថាៈ អល់ឡោះនឹងមិនចាត់តាំងអ្នកនាំសារណាម្នាក់បន្ទាប់ពីគេទៀវិញ ។ ដូច្នោះដែរ អល់ឡោះធ្វើឱ្យវង្វេងចំពោះអ្នកណាដែលជាអ្នកបំពានជាអ្នកសង្ស័យ ។

ٱلَّذِينَ يُجَٰدِلُونَ فِيٓ ءَايَٰتِ ٱللَّهِ بِغَيۡرِ سُلۡطَٰنٍ
أَتَىٰهُمۡۖ كَبُرَ مَقۡتًا عِندَ ٱللَّهِ وَعِندَ ٱلَّذِينَ
ءَامَنُواْۚ كَذَٰلِكَ يَطۡبَعُ ٱللَّهُ عَلَىٰ كُلِّ قَلۡبِ
مُتَكَبِّرٖ جَبَّارٖ ﴿٣٥﴾

៣៥-ពួកដែលជជែកដេញដោលនៅក្នុងអាយ៉ាត់ៗរបស់អល់ឡោះដោយគ្មានភស្តុតាងណាមួយបានមកដល់ពួកគេនោះ វាគួរឱ្យស្អប់ខ្ពើមដ៏ធំបំផុតចំពោះអល់ឡោះ និងចំពោះបណ្ដាអ្នកដែលមានជំនឿ ។ ដូច្នោះដែរ អល់ឡោះបោះត្រាភ្ជិតទៅលើរាល់ៗចិត្តរបស់អ្នកដែលក្រអឺតក្រទមផ្ដាច់ការ ។

وَقَالَ فِرۡعَوۡنُ يَٰهَٰمَٰنُ ٱبۡنِ لِي صَرۡحٗا لَّعَلِّيٓ
أَبۡلُغُ ٱلۡأَسۡبَٰبَ ﴿٣٦﴾

៣៦-ហើយហ្វៀរអោនបាននិយាយថាៈ ឱហ៊ើម៉ាន! ចូរអ្នកសង់វិមានមួយដ៏ខ្ពស់ឱ្យយើង ដើម្បីយើងឡើងទៅដល់ទ្វារទាំងឡាយ ។

أَسۡبَٰبَ ٱلسَّمَٰوَٰتِ فَأَطَّلِعَ إِلَىٰٓ إِلَٰهِ مُوسَىٰ
وَإِنِّي لَأَظُنُّهُۥ كَٰذِبٗاۚ وَكَذَٰلِكَ زُيِّنَ
لِفِرۡعَوۡنَ سُوٓءُ عَمَلِهِۦ وَصُدَّ عَنِ ٱلسَّبِيلِۚ
وَمَا كَيۡدُ فِرۡعَوۡنَ إِلَّا فِي تَبَابٖ ﴿٣٧﴾

៣៧-គឺទ្វារមេឃជាច្រើនជាន់ ដើម្បីយើងនឹងឡើងទៅមើលម្ចាស់របស់មូសា ។ ហើយពិតប្រាកដណាស់ យើងគិតថាគេជាអ្នកភូតកុហក ។ ហើយដូច្នោះដែរ វា(ស្ហៃតន) បានលំអចំពោះហ្វៀរ-អោននូវទង្វើអាក្រក់របស់គេ និងបានរាំងគេពីមាគ៌ាដ៏ត្រឹមត្រូវ ។ ហើយឧបាយកលរបស់ហ្វៀរអោនគ្មានអ្វីក្រៅពីស្ថិតក្នុងភាពវិនាសខាតបង់នោះឡើយ ។

وَقَالَ ٱلَّذِيٓ ءَامَنَ يَٰقَوۡمِ ٱتَّبِعُونِ أَهۡدِكُمۡ سَبِيلَ ٱلرَّشَادِ ٣٨

៣៨-ហើយអ្នកដែលមានជំនឿបាននិយាយថាៈ ឱក្រុមរបស់ខ្ញុំ! ចូរពួកអ្នកដើរតាមខ្ញុំ ខ្ញុំនឹងចង្អុលបង្ហាញពួកអ្នកទៅកាន់មាគ៌ាដ៏ត្រឹមត្រូវ ។

يَٰقَوۡمِ إِنَّمَا هَٰذِهِ ٱلۡحَيَوٰةُ ٱلدُّنۡيَا مَتَٰعٞ وَإِنَّ ٱلۡأٓخِرَةَ هِيَ دَارُ ٱلۡقَرَارِ ٣٩

៣៩-ឱក្រុមរបស់ខ្ញុំ! តាមពិតការរស់នៅក្នុងលោកិយគ្រាន់តែជាការសប្បាយមួយរយៈពេលប៉ុណ្ណោះ ។ ហើយពិតប្រាកដណាស់ ថ្ងៃបរលោកវាគឺជាកន្លែង(រស់នៅ)អមតៈ ។

مَنۡ عَمِلَ سَيِّئَةٗ فَلَا يُجۡزَىٰٓ إِلَّا مِثۡلَهَاۖ وَمَنۡ عَمِلَ صَٰلِحٗا مِّن ذَكَرٍ أَوۡ أُنثَىٰ وَهُوَ مُؤۡمِنٞ فَأُوْلَٰٓئِكَ يَدۡخُلُونَ ٱلۡجَنَّةَ يُرۡزَقُونَ فِيهَا بِغَيۡرِ حِسَابٖ ٤٠

៤០-អ្នកណាហើយបានប្រព្រឹត្តអំពើអាក្រក់ គឺមិនត្រូវបានគេតបស្នងឡើយ លើកលែងតែដូចអ្វីដែលគេបានប្រព្រឹត្តប៉ុណ្ណោះ ។ រីឯអ្នកណាហើយដែលបានសាងអំពើល្អត្រឹមត្រូវមិនថាបុរសឬស្ត្រី ហើយគេជាអ្នកមានជំនឿនោះ គឺអ្នកទាំងនោះនឹងចូលឋានសួគ៌ ដោយពួកគេនឹងត្រូវគេប្រទានលាភសក្ការៈនៅក្នុងនោះដោយឥតគណនាឡើយ ។

۞وَيَٰقَوۡمِ مَا لِيٓ أَدۡعُوكُمۡ إِلَى ٱلنَّجَوٰةِ وَتَدۡعُونَنِيٓ إِلَى ٱلنَّارِ ٤١

៤១-ហើយ(បុរសនោះបាននិយាយទៀតថា) ឱក្រុមរបស់ខ្ញុំ! ហេតុអ្វីបានជាខ្ញុំអំពាវនាវពួកអ្នកទៅកាន់ភាពសុខសាន្ត តែពួកអ្នកបែរជាអំពាវនាវខ្ញុំទៅកាន់នរកទៅវិញ?

تَدۡعُونَنِي لِأَكۡفُرَ بِٱللَّهِ وَأُشۡرِكَ بِهِۦ مَا لَيۡسَ لِي بِهِۦ عِلۡمٞ وَأَنَا۠ أَدۡعُوكُمۡ إِلَى ٱلۡعَزِيزِ ٱلۡغَفَّٰرِ ٤٢

៤២-ពួកអ្នកអំពាវនាវខ្ញុំដើម្បីឱ្យខ្ញុំប្រឆាំងនឹងអល់ឡោះ និងធ្វើស្ហ៊ីរិកនឹងទ្រង់នូវអ្វីដែលខ្ញុំមិនបានដឹងអំពីវា ។ តែខ្ញុំអំពាវនាវពួកអ្នកទៅកាន់ម្ចាស់ដែលមហាខ្លាំងពូកែ មហាអភ័យទោស ។

لَا جَرَمَ أَنَّمَا تَدۡعُونَنِيٓ إِلَيۡهِ لَيۡسَ لَهُۥ دَعۡوَةٞ فِي ٱلدُّنۡيَا وَلَا فِي ٱلۡأٓخِرَةِ وَأَنَّ مَرَدَّنَآ إِلَى ٱللَّهِ وَأَنَّ ٱلۡمُسۡرِفِينَ هُمۡ أَصۡحَٰبُ ٱلنَّارِ ٤٣

៤៣-គ្មានការសង្ស័យឡើយ ពិតប្រាកដណាស់អ្វីដែលពួកអ្នកអំពាវនាវខ្ញុំទៅកាន់វានោះ គឺវាមិនអាចឆ្លើយតបចំពោះការអំពាវនាវបានឡើយទាំងនៅក្នុងលោកិយនេះនិងថ្ងៃបរលោក ។ ហើយពិតប្រាកដណាស់ កន្លែងវិលត្រឡប់របស់ពួកយើងគឺទៅចំពោះអល់ឡោះតែមួយគត់ ។ ហើយពិតប្រាកដណាស់ ពួកដែលបំពានគឺជាពួកនរក ។

فَسَتَذۡكُرُونَ مَآ أَقُولُ لَكُمۡۚ وَأُفَوِّضُ أَمۡرِيٓ إِلَى ٱللَّهِۚ إِنَّ ٱللَّهَ بَصِيرُۢ

៤៤-ដូច្នេះ ពួកអ្នកនឹងនឹកឃើញនូវអ្វីដែលខ្ញុំនិយាយប្រាប់ពួកអ្នក ។ ហើយខ្ញុំប្រគល់កិច្ចការរបស់ខ្ញុំទៅចំពោះអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះឃើញបំផុតចំពោះបណ្ដាខ្ញុំ(របស់ទ្រង់) ។

بِٱلْعِبَادِ ﴿٤٤﴾

فَوَقَىٰهُ ٱللَّهُ سَيِّـَٔاتِ مَا مَكَرُواْ ۖ وَحَاقَ بِـَٔالِ
فِرْعَوْنَ سُوٓءُ ٱلْعَذَابِ ﴿٤٥﴾

៤៥-ហើយអល់ឡោះបានថែរក្សាគេពីប្រការអាក្រក់ទាំងឡាយដែលពួកគេបានប្រើឧបាយកល។ ហើយទារុណកម្មដ៏អាក្រក់បានហ៊ុមព័ទ្ធពូជពង្សរបស់ហ្វៀរអោន។

ٱلنَّارُ يُعْرَضُونَ عَلَيْهَا غُدُوًّا وَعَشِيًّا ۖ وَيَوْمَ
تَقُومُ ٱلسَّاعَةُ أَدْخِلُوٓاْ ءَالَ فِرْعَوْنَ أَشَدَّ
ٱلْعَذَابِ ﴿٤٦﴾

៤៦-ភ្លើងនរកត្រូវគេបង្ហាញចំពោះពួកគេទាំងព្រឹកទាំងល្ងាច។ ហើយនៅពេលដែលថ្ងៃបរលោកកើតឡើង (អល់ឡោះបញ្ជាម៉ាឡាអ៊ីកាត់ថា) ចូរពួកអ្នកបញ្ចូលពូជពង្សរបស់ហ្វៀរអោនទៅក្នុងទារុណកម្មដ៏ធ្ងន់ធ្ងរចុះ។

وَإِذْ يَتَحَآجُّونَ فِى ٱلنَّارِ فَيَقُولُ ٱلضُّعَفَـٰٓؤُاْ
لِلَّذِينَ ٱسْتَكْبَرُوٓاْ إِنَّا كُنَّا لَكُمْ تَبَعًا فَهَلْ
أَنتُم مُّغْنُونَ عَنَّا نَصِيبًا مِّنَ ٱلنَّارِ ﴿٤٧﴾

៤៧-ហើយ(ចូរចងចាំ)នៅពេលដែលពួកគេឈ្លោះប្រកែកគ្នានៅក្នុងនរក ពេលនោះពួកដែលទន់ខ្សោយ និយាយទៅកាន់ពួកដែលក្រអឺតក្រទមថា: ពិតប្រាកដណាស់ ពួកយើងធ្លាប់តាមពួកអ្នក ដូច្នេះតើពួកអ្នកអាចការពារពួកយើងមួយផ្នែកពីភ្លើងនរកបានដែរឬទេ?

قَالَ ٱلَّذِينَ ٱسْتَكْبَرُوٓاْ إِنَّا كُلٌّ فِيهَآ إِنَّ
ٱللَّهَ قَدْ حَكَمَ بَيْنَ ٱلْعِبَادِ ﴿٤٨﴾

៤៨-ពួកដែលក្រអឺតក្រទមបានតបវិញថា: ពិតប្រាកដណាស់ ពួកយើងទាំងអស់ស្ថិតនៅក្នុងនរកដូចគ្នាទេ។ ពិតប្រាកដណាស់ អល់ឡោះពិតជាបានកាត់សេចក្តីរវាងខ្ញុំទាំងឡាយ(របស់ទ្រង់)។

وَقَالَ ٱلَّذِينَ فِى ٱلنَّارِ لِخَزَنَةِ جَهَنَّمَ ٱدْعُواْ
رَبَّكُمْ يُخَفِّفْ عَنَّا يَوْمًا مِّنَ ٱلْعَذَابِ ﴿٤٩﴾

៤៩-ហើយពួកដែលនៅក្នុងនរកបាននិយាយទៅកាន់អ្នកយាមនរកជើហាន់ណាំថា: សូមពួកអ្នកមេត្តាបួងសួងសុំពីម្ចាស់របស់ពួកអ្នកឱ្យសម្រាលទារុណកម្មដល់ពួកយើងចំនួនមួយថ្ងៃផង។

قَالُوٓاْ أَوَلَمْ تَكُ تَأْتِيكُمْ رُسُلُكُم
بِٱلْبَيِّنَـٰتِ ۖ قَالُواْ بَلَىٰ ۚ قَالُواْ فَٱدْعُواْ ۗ وَمَا
دُعَـٰٓؤُاْ ٱلْكَـٰفِرِينَ إِلَّا فِى ضَلَـٰلٍ ﴿٥٠﴾

៥០-ពួកគេបានតបវិញថា: តើបណ្តាអ្នកនាំសាររបស់ពួកអ្នកមិនធ្លាប់បាននាំមកនូវភស្តុតាងដ៏ច្បាស់លាស់ឱ្យពួកអ្នកទេឬ? ពួកគេ(ពួកនរក)បានឆ្លើយថា: ពិតជាបាននាំមកមែន។ ពួកគេបាននិយាយទៀតថា: ដូច្នេះ ចូរពួកអ្នកបួងសួងសុំ(ដោយខ្លួនឯង)ចុះ។ ហើយការបួងសួងសុំរបស់ពួកដែលគ្មានជំនឿ គឺគ្មានផលប្រយោជន៍ឡើយ។

إِنَّا لَنَنصُرُ رُسُلَنَا وَٱلَّذِينَ ءَامَنُواْ
فِى ٱلْحَيَوٰةِ ٱلدُّنْيَا وَيَوْمَ يَقُومُ ٱلْأَشْهَـٰدُ ﴿٥١﴾

៥១-ពិតប្រាកដណាស់ យើងនឹងជួយបណ្តាអ្នកនាំសាររបស់យើង និងបណ្តាអ្នកដែលមានជំនឿក្នុងការរស់នៅលើលោកិយ និង

ថ្ងៃដែលបណ្ដាសាក្សីមកធ្វើសាក្សី( ថ្ងៃបរលោក) ។

يَوْمَ لَا يَنفَعُ ٱلظَّٰلِمِينَ مَعْذِرَتُهُمْ ۖ وَلَهُمُ ٱللَّعْنَةُ وَلَهُمْ سُوٓءُ ٱلدَّارِ ﴿٥٢﴾

៥២-គឺជាថ្ងៃដែលការដោះសារបស់ពួកដែលបំពានគ្មានផល ប្រយោជន៍ចំពោះពួកគេឡើយ ។ ហើយពួកគេនឹងទទួលនូវបណ្ដាសា ហើយកន្លែងដ៏អាក្រក់នោះគឺសម្រាប់ពួកគេ ។

وَلَقَدْ ءَاتَيْنَا مُوسَى ٱلْهُدَىٰ وَأَوْرَثْنَا بَنِىٓ إِسْرَٰٓءِيلَ ٱلْكِتَٰبَ ﴿٥٣﴾

៥៣-ហើយជាការពិតណាស់ យើងបានប្រទានការចង្អុល បង្ហាញដល់មូសា ហើយយើងក៏បានប្រទានគម្ពីរ( តាវរ៉ត) ជាកេរ មរតកដល់អំបូរអ៊ីស្រាអែលដែរ ។

هُدًى وَذِكْرَىٰ لِأُو۟لِى ٱلْأَلْبَٰبِ ﴿٥٤﴾

៥៤-ដើម្បីជាការចង្អុលបង្ហាញ និងជាការរំលឹកសម្រាប់បញ្ញា-ជនទាំងឡាយ ។

فَٱصْبِرْ إِنَّ وَعْدَ ٱللَّهِ حَقٌّ وَٱسْتَغْفِرْ لِذَنۢبِكَ وَسَبِّحْ بِحَمْدِ رَبِّكَ بِٱلْعَشِىِّ وَٱلْإِبْكَٰرِ ﴿٥٥﴾

៥៥-ដូច្នេះ ចូរអ្នក( មូហាំម៉ាត់) អត់ធ្មត់ចុះ ពិតប្រាកដណាស់ ការសន្យារបស់អល់ឡោះគឺជាការពិត ។ ហើយចូរអ្នកសុំអភ័យ-ទោសចំពោះបាបកម្មរបស់អ្នក និងត្រូវលើកតម្កើងដោយកោត សរសើរចំពោះម្ចាស់របស់អ្នកទាំងល្ងាចទាំងព្រឹកចុះ ។

إِنَّ ٱلَّذِينَ يُجَٰدِلُونَ فِىٓ ءَايَٰتِ ٱللَّهِ بِغَيْرِ سُلْطَٰنٍ أَتَىٰهُمْ ۙ إِن فِى صُدُورِهِمْ إِلَّا كِبْرٌ مَّا هُم بِبَٰلِغِيهِ ۚ فَٱسْتَعِذْ بِٱللَّهِ ۖ إِنَّهُۥ هُوَ ٱلسَّمِيعُ ٱلْبَصِيرُ ﴿٥٦﴾

៥៦-ពិតប្រាកដណាស់ ពួកដែលជជែកដេញដោលក្នុងអាយ៉ាត់ៗ របស់អល់ឡោះដោយគ្មានភស្តុតាងណាមួយបានមកដល់ពួកគេនោះ នៅក្នុងចិត្តរបស់ពួកគេគ្មានអ្វីក្រៅពីភាពក្រអឺតក្រទមដែលពួកគេ មិនអាចឈានទៅដល់វាឡើយ ។ ដូច្នេះ ចូរអ្នកសុំពីអល់ឡោះឱ្យ កំបាំង( អំពីប្រការអាក្រក់របស់ពួកគេ) ចុះ ។ ពិតប្រាកដណាស់ ទ្រង់ មហាឮ មហាឃើញ ។

لَخَلْقُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ أَكْبَرُ مِنْ خَلْقِ ٱلنَّاسِ وَلَٰكِنَّ أَكْثَرَ ٱلنَّاسِ لَا يَعْلَمُونَ ﴿٥٧﴾

៥៧-ការបង្កើតមេឃជាច្រើនជាន់ និងផែនដី គឺពិតជាធំធេង ជាងការបង្កើតមនុស្សលោកទៅទៀត ក៏ប៉ុន្តែមនុស្សលោកភាគ ច្រើនមិនដឹងឡើយ ។

وَمَا يَسْتَوِى ٱلْأَعْمَىٰ وَٱلْبَصِيرُ وَٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ وَلَا ٱلْمُسِىٓءُ ۚ قَلِيلًا مَّا تَتَذَكَّرُونَ ﴿٥٨﴾

៥៨-ហើយអ្នកងងឹតភ្នែក និងអ្នកមើលឃើញមិនស្មើគ្នាឡើយ ហើយបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ ក៏មិន ស្មើគ្នានឹងពួកដែលប្រព្រឹត្តអំពើអាក្រក់ដែរ ។ អ្វីដែលពួកអ្នកយក ធ្វើជាមេរៀនគឺតិចតួចបំផុត ។

إِنَّ ٱلسَّاعَةَ لَءَاتِيَةٌ لَّا رَيْبَ فِيهَا وَلَٰكِنَّ

៥៩-ពិតប្រាកដណាស់ ថ្ងៃបរលោកនឹងមកដល់ដោយគ្មានការ សង្ស័យចំពោះវាឡើយ ។ ក៏ប៉ុន្តែមនុស្សលោកភាគច្រើនគ្មានជំនឿ

(នឹងវា) ឡើយ ។

៦០-ហើយម្ចាស់របស់អ្នកបានមានបន្ទូលថាៈ ចូរពួកអ្នកបួងសួងសុំចំពោះយើងចុះ យើងនឹងទទួលយកការបួងសួងសុំរបស់ពួកអ្នក ។ ពិតប្រាកដណាស់ ពួកដែលក្រអឺតក្រទមចំពោះការគោរពសក្ការៈមកចំពោះយើង ពួកគេនឹងចូលនរកជើហាន់ណាំយ៉ាងអាម៉ាស់បំផុត ។

៦១-អល់ឡោះគឺជាអ្នកដែលបានបង្កើតពេលយប់សម្រាប់ពួកអ្នក ដើម្បីឱ្យពួកអ្នកសម្រាកក្នុងវា ហើយ (ទ្រង់បានបង្កើត) ពេលថ្ងៃជាពន្លឺ (ដើម្បីធ្វើការងារផ្សេងៗ) ។ ពិតប្រាកដណាស់ អល់ឡោះមានការប្រោសប្រទានដល់មនុស្សលោក ប៉ុន្តែមនុស្សលោកភាគច្រើនរមិលគុណ ។

៦២-នោះហើយអល់ឡោះជាម្ចាស់របស់ពួកអ្នក ដែលជាអ្នកបង្កើតរាល់អ្វីៗទាំងអស់ ។ គ្មានម្ចាស់ណាផ្សេងត្រូវគោរពសក្ការៈពិតប្រាកដក្រៅពីទ្រង់ឡើយ ។ ដូច្នេះ តើពួកអ្នកនៅតែឱ្យគេបោកបញ្ឆោតបានយ៉ាងដូចម្ដេច?

៦៣-ដូច្នោះដែរ ពួកដែលធ្លាប់ប្រឆាំងនឹងអាយ៉ាត់ៗរបស់អល់ឡោះ ក៏ត្រូវគេបោកបញ្ឆោតដែរ ។

៦៤-អល់ឡោះគឺជាអ្នកដែលបានបង្កើតផែនដីជាកន្លែងរស់នៅសម្រាប់ពួកអ្នក ហើយ (ទ្រង់បានបង្កើត) មេឃជាដំបូល ។ ហើយទ្រង់បានបង្កើតពួកអ្នកឱ្យមានជារូបរាង និងបានធ្វើឱ្យរូបរាងរបស់ពួកអ្នកល្អប្រណីត ព្រមទាំងបានប្រទានលាភសក្ការៈដ៏ល្អដល់ពួកអ្នកទៀតផង ។ នោះហើយគឺអល់ឡោះជាម្ចាស់របស់ពួកអ្នក ។ ហើយអល់ឡោះមហាឧត្ដុង្គឧត្ដមដែលជាម្ចាស់គ្រប់គ្រងពិភពទាំងអស់ ។

៦៥-ទ្រង់គឺជាអ្នកដែលរស់ជាអមតៈ ដែលគ្មានម្ចាស់ណាផ្សេងត្រូវគោរពសក្ការៈក្រៅពីទ្រង់ឡើយ ។ ដូច្នេះ ចូរពួកអ្នកគោរពសក្ការៈចំពោះទ្រង់ដោយចិត្តស្មោះត្រង់ក្នុងការប្រណិប័តន៍ចំពោះ

أَكۡثَرَ ٱلنَّاسِ لَا يُؤۡمِنُونَ ٥٩

وَقَالَ رَبُّكُمُ ٱدۡعُونِيٓ أَسۡتَجِبۡ لَكُمۡۚ إِنَّ ٱلَّذِينَ يَسۡتَكۡبِرُونَ عَنۡ عِبَادَتِي سَيَدۡخُلُونَ جَهَنَّمَ دَاخِرِينَ ٦٠

ٱللَّهُ ٱلَّذِي جَعَلَ لَكُمُ ٱلَّيۡلَ لِتَسۡكُنُواْ فِيهِ وَٱلنَّهَارَ مُبۡصِرًاۚ إِنَّ ٱللَّهَ لَذُو فَضۡلٍ عَلَى ٱلنَّاسِ وَلَٰكِنَّ أَكۡثَرَ ٱلنَّاسِ لَا يَشۡكُرُونَ ٦١

ذَٰلِكُمُ ٱللَّهُ رَبُّكُمۡ خَٰلِقُ كُلِّ شَيۡءٖ لَّآ إِلَٰهَ إِلَّا هُوَۖ فَأَنَّىٰ تُؤۡفَكُونَ ٦٢

كَذَٰلِكَ يُؤۡفَكُ ٱلَّذِينَ كَانُواْ بِـَٔايَٰتِ ٱللَّهِ يَجۡحَدُونَ ٦٣

ٱللَّهُ ٱلَّذِي جَعَلَ لَكُمُ ٱلۡأَرۡضَ قَرَارٗا وَٱلسَّمَآءَ بِنَآءٗ وَصَوَّرَكُمۡ فَأَحۡسَنَ صُوَرَكُمۡ وَرَزَقَكُم مِّنَ ٱلطَّيِّبَٰتِۚ ذَٰلِكُمُ ٱللَّهُ رَبُّكُمۡۖ فَتَبَارَكَ ٱللَّهُ رَبُّ ٱلۡعَٰلَمِينَ ٦٤

هُوَ ٱلۡحَيُّ لَآ إِلَٰهَ إِلَّا هُوَ فَٱدۡعُوهُ مُخۡلِصِينَ لَهُ ٱلدِّينَۗ ٱلۡحَمۡدُ لِلَّهِ رَبِّ ٱلۡعَٰلَمِينَ ٦٥

ទ្រង់ ។ រាល់ការសរសើរគឺចំពោះអល់ឡោះជាម្ចាស់គ្រប់គ្រងពិភព ទាំងអស់ ។

۞ قُلْ إِنِّي نُهِيتُ أَنْ أَعْبُدَ ٱلَّذِينَ تَدْعُونَ
مِن دُونِ ٱللَّهِ لَمَّا جَآءَنِيَ ٱلْبَيِّنَٰتُ مِن رَّبِّي
وَأُمِرْتُ أَنْ أُسْلِمَ لِرَبِّ ٱلْعَٰلَمِينَ ٦٦

៦៦-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ពិតប្រាកដណាស់ ខ្ញុំត្រូវបានគេហាមឃាត់ពីការគោរពសក្ការៈចំពោះពួកដែលពួកអ្នកគោរពសក្ការៈផ្សេងពីអល់ឡោះនៅពេលដែលភស្តុតាងជាច្រើនពីម្ចាស់របស់ខ្ញុំបានមកដល់ខ្ញុំហើយនោះ ហើយខ្ញុំក៏ត្រូវគេបញ្ជាឱ្យប្រគល់ខ្លួនទៅចំពោះម្ចាស់គ្រប់គ្រងពិភពទាំងអស់ដែរ ។

هُوَ ٱلَّذِي خَلَقَكُم مِّن تُرَابٍ ثُمَّ مِن نُّطْفَةٍ
ثُمَّ مِنْ عَلَقَةٍ ثُمَّ يُخْرِجُكُمْ طِفْلًا ثُمَّ لِتَبْلُغُوٓاْ
أَشُدَّكُمْ ثُمَّ لِتَكُونُواْ شُيُوخًا ۚ وَمِنكُم مَّن
يُتَوَفَّىٰ مِن قَبْلُ ۖ وَلِتَبْلُغُوٓاْ أَجَلًا مُّسَمًّى
وَلَعَلَّكُمْ تَعْقِلُونَ ٦٧

៦៧-ទ្រង់គឺជាអ្នកដែលបានបង្កើតពួកអ្នកពីដី បន្ទាប់មកពីទឹកកាម បន្ទាប់មកក្លាយជាដុំឈាម បន្ទាប់មកទ្រង់បញ្ចេញពួកអ្នកមកជាទារក បន្ទាប់មកពួកអ្នកបានលូតលាស់ធំពេញវ័យ បន្ទាប់មកទៀតពួកអ្នកនឹងក្លាយទៅជាចាស់ជរា ។ ហើយក្នុងចំណោមពួកអ្នកមានអ្នកខ្លះត្រូវស្លាប់មុននោះ( ចាស់ជរា) ។ ហើយ( យើងធ្វើដូច្នេះ) ដើម្បីឱ្យពួកអ្នករស់រហូតដល់ពេលមួយដែលត្រូវគេកំណត់ ។ ហើយសង្ឃឹមថាពួកអ្នកនឹងចេះគិតពិចារណា ។

هُوَ ٱلَّذِي يُحْيِۦ وَيُمِيتُ ۖ فَإِذَا قَضَىٰٓ أَمْرًا
فَإِنَّمَا يَقُولُ لَهُۥ كُن فَيَكُونُ ٦٨

៦៨-ទ្រង់គឺជាអ្នកដែលធ្វើឱ្យរស់ និងធ្វើឱ្យស្លាប់ ។ ដូច្នេះ នៅពេលណាដែលទ្រង់សម្រេចកិច្ចការអ្វីមួយ គឺទ្រង់គ្រាន់តែមានបន្ទូលទៅកាន់វាថាៈ ចូរកើតចុះ វានឹងកើតឡើងភ្លាម ។

أَلَمْ تَرَ إِلَى ٱلَّذِينَ يُجَٰدِلُونَ فِيٓ ءَايَٰتِ ٱللَّهِ أَنَّىٰ
يُصْرَفُونَ ٦٩

៦៩-តើអ្នកមិនបានមើលទៅពួកដែលជជែកដេញដោលនៅក្នុងអាយ៉ាត់ៗរបស់អល់ឡោះទេឬ? តើពួកគេនៅតែឱ្យគេបោកបញ្ឆោតបានយ៉ាងដូចម្ដេច?

ٱلَّذِينَ كَذَّبُواْ بِٱلْكِتَٰبِ وَبِمَآ أَرْسَلْنَا بِهِۦ
رُسُلَنَا ۖ فَسَوْفَ يَعْلَمُونَ ٧٠

៧០-ពួកដែលបានបដិសេធនឹងគម្ពីរ( គួរអាន) និងអ្វីដែលយើងបានបញ្ជូនទៅចំពោះបណ្ដាអ្នកនាំសាររបស់យើង ពួកគេគង់តែនឹងដឹងជាមិនខាន ។

إِذِ ٱلْأَغْلَٰلُ فِيٓ أَعْنَٰقِهِمْ وَٱلسَّلَٰسِلُ
يُسْحَبُونَ ٧١

៧១-នៅពេលដែលខ្នោះ និងច្រវាក់ត្រូវគេដាក់ជាប់នឹងករបស់ពួកគេ ដោយពួកគេត្រូវគេអូស

فِي ٱلْحَمِيمِ ثُمَّ فِي ٱلنَّارِ يُسْجَرُونَ ٧٢

៧២-ចូលក្នុងទឹកយ៉ាងក្ដៅ បន្ទាប់មកពួកគេត្រូវគេដុតនៅក្នុងភ្លើងនរក ។

ثُمَّ قِيلَ لَهُمْ أَيْنَ مَا كُنتُمْ تُشْرِكُونَ ﴿٧٣﴾

៧៣-បន្ទាប់មក មានគេនិយាយទៅចំពោះពួកគេថា: តើនៅឯណាទៅអ្វី(ព្រះនានា)ដែលពួកអ្នកធ្លាប់គោរពសក្ការៈ

مِن دُونِ ٱللَّهِ ۖ قَالُوا۟ ضَلُّوا۟ عَنَّا بَل لَّمْ نَكُن نَّدْعُوا۟ مِن قَبْلُ شَيْـًٔا ۚ كَذَٰلِكَ يُضِلُّ ٱللَّهُ ٱلْكَـٰفِرِينَ ﴿٧٤﴾

៧៤-ផ្សេងពីអល់ឡោះនោះ? ពួកគេបានឆ្លើយថា: ពួកវាបានគេចបាត់ពីពួកយើងហើយ ផ្ទុយទៅវិញ ពួកយើងមិនធ្លាប់គោរពសក្ការៈអ្វីមួយកាលពីមុនឡើយ ។ ដូច្នោះដែរ អល់ឡោះធ្វើឱ្យពួកដែលគ្មានជំនឿវង្វេង ។

ذَٰلِكُم بِمَا كُنتُمْ تَفْرَحُونَ فِى ٱلْأَرْضِ بِغَيْرِ ٱلْحَقِّ وَبِمَا كُنتُمْ تَمْرَحُونَ ﴿٧٥﴾

៧៥-ទាំងនោះគឺដោយសារតែពួកអ្នកធ្លាប់សប្បាយរីករាយនៅលើផែនដីដោយមិនត្រឹមត្រូវ និងដោយសារតែពួកអ្នកធ្លាប់ក្រអឺតក្រទម ។

ٱدْخُلُوٓا۟ أَبْوَٰبَ جَهَنَّمَ خَـٰلِدِينَ فِيهَا ۖ فَبِئْسَ مَثْوَى ٱلْمُتَكَبِّرِينَ ﴿٧٦﴾

៧៦-(មានគេនិយាយទៅកាន់ពួកគេទៀតថា) ចូរពួកអ្នកចូលតាមទ្វារនានារបស់នរកជើហាន់ណាំដោយស្ថិតនៅក្នុងនោះជាអមតៈចុះ ។ ដូច្នេះកន្លែងរបស់ពួកដែលក្រអឺតក្រទម គឺអាក្រក់បំផុត ។

فَٱصْبِرْ إِنَّ وَعْدَ ٱللَّهِ حَقٌّ ۚ فَإِمَّا نُرِيَنَّكَ بَعْضَ ٱلَّذِى نَعِدُهُمْ أَوْ نَتَوَفَّيَنَّكَ فَإِلَيْنَا يُرْجَعُونَ ﴿٧٧﴾

៧៧-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់) អត់ធ្មត់ចុះ ពិតប្រាកដណាស់ការសន្យារបស់អល់ឡោះគឺជាការពិត ។ ហើយទោះបីជាយើងឱ្យអ្នក(មូហាំម៉ាត់)មើលឃើញទារុណកម្មខ្លះ(នៅលើលោកិយ) ដែលយើងសន្យាចំពោះពួកគេ ឬយើងនឹងឱ្យអ្នកស្លាប់(មុនឃើញទារុណកម្មនោះ)ក៏ដោយ ក៏កន្លែងវិលត្រឡប់របស់ពួកគេឆ្ពោះមកកាន់យើងដដែល ។

وَلَقَدْ أَرْسَلْنَا رُسُلًا مِّن قَبْلِكَ مِنْهُم مَّن قَصَصْنَا عَلَيْكَ وَمِنْهُم مَّن لَّمْ نَقْصُصْ عَلَيْكَ ۗ وَمَا كَانَ لِرَسُولٍ أَن يَأْتِىَ بِـَٔايَةٍ إِلَّا بِإِذْنِ ٱللَّهِ ۚ فَإِذَا جَآءَ أَمْرُ ٱللَّهِ قُضِىَ بِٱلْحَقِّ وَخَسِرَ هُنَالِكَ ٱلْمُبْطِلُونَ ﴿٧٨﴾

៧៨-ហើយជាការពិតណាស់ យើងបានបញ្ជូនបណ្តាអ្នកនាំសារមុនអ្នក(មូហាំម៉ាត់) ។ ក្នុងចំណោមពួកគេមានអ្នកខ្លះយើងបាននិទានប្រាប់អ្នក និងក្នុងចំណោមពួកគេទៀតមានអ្នកខ្លះយើងមិនបាននិទានប្រាប់អ្នកទេ ។ ហើយចំពោះអ្នកនាំសារមិនបាននាំមកនូវភស្តុតាងណាមួយឡើយ លើកលែងតែមានការអនុញ្ញាតរបស់អល់ឡោះ ។ ហើយនៅពេលដែលបទបញ្ជា(ទារុណកម្ម)របស់អល់ឡោះបានមកដល់នោះ គឺត្រូវបានគេសម្រេចដោយយុត្តិធម៌ ហើយពេលនោះពួកដែលអនុវត្តតាមប្រការមិនពិតបានខាតបង់ ។

ٱللَّهُ ٱلَّذِى جَعَلَ لَكُمُ ٱلْأَنْعَـٰمَ لِتَرْكَبُوا۟ مِنْهَا

៧៩-អល់ឡោះជាអ្នកដែលបានបង្កើតសត្វពាហនៈសម្រាប់ពួកអ្នក ពួកវាមួយចំនួនសម្រាប់ឱ្យពួកអ្នកជិះ ហើយពួកវាមួយ

وَمِنۡهَا تَأۡكُلُونَ ٧٩

ចំនួនទៀតពួកអ្នកអាចបរិភោគបាន ។

وَلَكُمۡ فِيهَا مَنَٰفِعُ وَلِتَبۡلُغُواْ عَلَيۡهَا حَاجَةً فِي صُدُورِكُمۡ وَعَلَيۡهَا وَعَلَى ٱلۡفُلۡكِ تُحۡمَلُونَ ٨٠

៨០-ហើយចំពោះវាគឺមានប្រយោជន៍ជាច្រើនសម្រាប់ពួកអ្នក និងដើម្បីឱ្យពួកអ្នកទៅដល់គោលដៅដោយសារវាតាមតម្រូវការដែលមាននៅក្នុងចិត្តរបស់ពួកអ្នក ។ ហើយពួកអ្នកត្រូវគេដឹកជញ្ជូននៅលើវា និងនៅលើសំពៅ ។

وَيُرِيكُمۡ ءَايَٰتِهِۦ فَأَيَّ ءَايَٰتِ ٱللَّهِ تُنكِرُونَ ٨١

៨១-ហើយទ្រង់បង្ហាញឱ្យពួកអ្នកឃើញនូវភស្តុតាងជាច្រើនរបស់ទ្រង់ ដូច្នេះតើភស្តុតាងរបស់អល់ឡោះណាមួយដែលពួកអ្នកប្រឆាំងនោះ?

أَفَلَمۡ يَسِيرُواْ فِي ٱلۡأَرۡضِ فَيَنظُرُواْ كَيۡفَ كَانَ عَٰقِبَةُ ٱلَّذِينَ مِن قَبۡلِهِمۡۚ كَانُوٓاْ أَكۡثَرَ مِنۡهُمۡ وَأَشَدَّ قُوَّةً وَءَاثَارًا فِي ٱلۡأَرۡضِ فَمَآ أَغۡنَىٰ عَنۡهُم مَّا كَانُواْ يَكۡسِبُونَ ٨٢

៨២-តើពួកគេ(អារ៉ាប់ម៉ាក្កះ)មិនបានធ្វើដំណើរនៅលើផែនដី និងពិនិត្យមើលទេឬ តើលទ្ធផលចុងក្រោយរបស់ពួក(ក្រុមអាដ និងសាមូដ)ដែលមុនពួកគេនោះយ៉ាងដូចម្តេចដែរ? ពួកគេមានចំនួនច្រើន និងមានកម្លាំងខ្លាំងក្លា ហើយនិងបានបន្សល់ទុកកេរដំណែលនៅលើផែនដីច្រើនជាងពួកគេ(អារ៉ាប់ម៉ាក្កះ)ទៅទៀតតែអ្វីដែលពួកគេធ្លាប់ប្រឹងប្រែងរកនោះគ្មានប្រយោជន៍សម្រាប់ពួកគេឡើយ ។

فَلَمَّا جَآءَتۡهُمۡ رُسُلُهُم بِٱلۡبَيِّنَٰتِ فَرِحُواْ بِمَا عِندَهُم مِّنَ ٱلۡعِلۡمِ وَحَاقَ بِهِم مَّا كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ٨٣

៨៣-ហើយនៅពេលដែលបណ្តាអ្នកនាំសាររបស់ពួកគេបាននាំភស្តុតាងយ៉ាងច្បាស់លាស់ជាច្រើនមកឱ្យពួកគេ ពួកគេបែរជាសប្បាយ(ទាំងអំនួត)នូវអ្វីដែលមាននៅជាមួយពួកគេអំពីចំណេះដឹង(មិនត្រឹមត្រូវ)ទៅវិញ ។ ហើយអ្វី(ទារុណកម្ម)ដែលពួកគេធ្លាប់បានសើចចំអកចំពោះវានោះបានហ៊ុមព័ទ្ធពួកគេ ។

فَلَمَّا رَأَوۡاْ بَأۡسَنَا قَالُوٓاْ ءَامَنَّا بِٱللَّهِ وَحۡدَهُۥ وَكَفَرۡنَا بِمَا كُنَّا بِهِۦ مُشۡرِكِينَ ٨٤

៨៤-ហើយនៅពេលដែលពួកគេបានឃើញទារុណកម្មរបស់យើង ពួកគេក៏បាននិយាយថា: ពួកយើងមានជំនឿលើអល់ឡោះតែមួយគត់ ហើយពួកយើងបានបដិសេធនឹងអ្វីដែលពួកយើងធ្លាប់ធ្វើស្ហ៊ីរិកនឹងវា ។

فَلَمۡ يَكُ يَنفَعُهُمۡ إِيمَٰنُهُمۡ لَمَّا رَأَوۡاْ بَأۡسَنَاۖ سُنَّتَ ٱللَّهِ ٱلَّتِي قَدۡ خَلَتۡ فِي عِبَادِهِۦۖ وَخَسِرَ هُنَالِكَ ٱلۡكَٰفِرُونَ ٨٥

៨៥-តែជំនឿរបស់ពួកគេមិនបានផ្តល់ផលប្រយោជន៍ដល់ពួកគេឡើយ នៅពេលដែលពួកគេបានឃើញទារុណកម្មរបស់យើង ។ មាគ៌ា(ច្បាប់)របស់អល់ឡោះ ពិតជាបានកើតឡើងចំពោះខ្ញុំទាំងឡាយរបស់ទ្រង់ ។ ហើយនៅពេលនោះពួកដែលប្រឆាំងបានខាតបង់ ។

## ជំពូកហ្វូសស៊ីឡាត់

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-ហា មីម។

២-វា(គម្ពីរគួរអាន)គឺជាការបញ្ចុះពីម្ចាស់ដែលមហាសប្បុរស មហាអាណិតស្រឡាញ់។

៣-ជាគម្ពីរដែលអាយ៉ាត់ៗរបស់វាត្រូវបានគេពន្យល់យ៉ាងច្បាស់លាស់ជាភាសាអារ៉ាប់សម្រាប់បណ្ដាអ្នកដែលចេះដឹង។

៤-ដែលជាការផ្ដល់ដំណឹងរីករាយ និងជាការដាស់តឿនព្រមាន តែពួកគេភាគច្រើនបែរជាបានបែរចេញ និងមិនស្ដាប់ទៅវិញ។

៥-ហើយពួកគេបាននិយាយថា: ចិត្តរបស់ពួកយើងមានគំរបបិទជិតនូវអ្វីដែលអ្នកកំពុងតែអំពាវនាវពួកយើងទៅកាន់វា។ ហើយនៅក្នុងត្រចៀករបស់ពួកយើងមានឆ្កកចុក។ ហើយរវាងពួកយើង និងអ្នក(មូហាំម៉ាត់)មានរនាំងបាំង។ ដូច្នេះ ចូរអ្នកអនុវត្តតាមមាគ៌ារបស់អ្នកចុះ ពិតប្រាកដណាស់ពួកយើងក៏អនុវត្តតាមមាគ៌ារបស់ពួកយើងដែរ។

៦-ចូរអ្នក(មូហាំម៉ាត់)ពោលថា: តាមពិត ខ្ញុំជាមនុស្សលោកដូចពួកអ្នកដែរ គ្រាន់តែគេបានផ្ដល់វ៉ាហ៊ីមកឱ្យខ្ញុំថា: ពិតប្រាកដណាស់ ម្ចាស់របស់ពួកអ្នកគឺជាម្ចាស់តែមួយគត់។ ដូច្នេះ ចូរពួកអ្នកអនុវត្តឱ្យបានត្រឹមត្រូវចំពោះទ្រង់ និងត្រូវសុំអភ័យទោសពីទ្រង់។ ហើយភាពអន្តរាយគឺសម្រាប់ពួកដែលធ្វើស្ឺរិក។

៧-(គឺជាពួក)ដែលមិនបរិច្ចាគហ្សាកាត់ ហើយពួកគេ គឺជាពួកដែលគ្មានជំនឿនឹងថ្ងៃបរលោក។

៨-ពិតប្រាកដណាស់ បណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ ពួកគេនឹងទទួលបានផលបុណ្យដោយឥតគណនាគ្មានទីបញ្ចប់។

## سورة فصلت

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

حمٓ ١

تَنزِيلٞ مِّنَ ٱلرَّحۡمَٰنِ ٱلرَّحِيمِ ٢

كِتَٰبٞ فُصِّلَتۡ ءَايَٰتُهُۥ قُرۡءَانًا عَرَبِيّٗا لِّقَوۡمٖ
يَعۡلَمُونَ ٣

بَشِيرٗا وَنَذِيرٗا فَأَعۡرَضَ أَكۡثَرُهُمۡ فَهُمۡ لَا
يَسۡمَعُونَ ٤

وَقَالُواْ قُلُوبُنَا فِيٓ أَكِنَّةٖ مِّمَّا تَدۡعُونَآ إِلَيۡهِ
وَفِيٓ ءَاذَانِنَا وَقۡرٞ وَمِنۢ بَيۡنِنَا وَبَيۡنِكَ حِجَابٞ
فَٱعۡمَلۡ إِنَّنَا عَٰمِلُونَ ٥

قُلۡ إِنَّمَآ أَنَا۠ بَشَرٞ مِّثۡلُكُمۡ يُوحَىٰٓ إِلَيَّ أَنَّمَآ
إِلَٰهُكُمۡ إِلَٰهٞ وَٰحِدٞ فَٱسۡتَقِيمُوٓاْ إِلَيۡهِ
وَٱسۡتَغۡفِرُوهُۗ وَوَيۡلٞ لِّلۡمُشۡرِكِينَ ٦

ٱلَّذِينَ لَا يُؤۡتُونَ ٱلزَّكَوٰةَ وَهُم بِٱلۡأٓخِرَةِ هُمۡ
كَٰفِرُونَ ٧

إِنَّ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ لَهُمۡ
أَجۡرٌ غَيۡرُ مَمۡنُونٖ ٨

៩-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើពួកអ្នកពិតជាគ្មានជំនឿលើម្ចាស់ដែលបានបង្កើតផែនដីក្នុងរយៈពេលពីរថ្ងៃ ហើយពួកអ្នកបង្កើតព្រះនានាយកមកធ្វើស្ហ៊ីរិកនឹងទ្រង់ឬ? នោះហើយគឺជាម្ចាស់គ្រប់គ្រងពិភពទាំងអស់។

១០-ហើយនៅលើផែនដីទ្រង់បានបង្កើតភ្នំជាច្រើននៅលើវា និងបានប្រទានពរជ័យនៅលើវា ព្រមទាំងបានកំណត់ចំណីអាហារនៅលើវារយៈពេលបួនថ្ងៃ(ពីរថ្ងៃបង្កើតផែនដី និងពីរថ្ងៃទៀតបង្កើតអ្វីដែលនៅលើវា)សម្រាប់បណ្តាអ្នកដែលសួរ។

១១-បន្ទាប់មកទ្រង់ឆ្ពោះទៅលើមេឃ ខណៈដែលវាគឺជាផ្សែងនៅឡើយ។ ហើយទ្រង់បានមានបន្ទូលទៅកាន់វា(មេឃ)និងផែនដីថាៈ ចូរអ្នកទាំងពីរមក ទោះដោយស្ម័គ្រចិត្តឬមិនស្ម័គ្រចិត្តក៏ដោយ។ ពួកវាទាំងពីរបានតបថាៈ ពួកខ្ញុំទាំងពីរបានមកទាំងស្ម័គ្រចិត្ត។

១២-ទ្រង់បានបង្កើតមេឃទាំងប្រាំពីរជាន់រួចរាល់ក្នុងរយៈពេលពីរថ្ងៃ។ ហើយទ្រង់បានរៀបចំឱ្យមេឃរាល់៧ជាន់នូវកិច្ចការរបស់វា។ ហើយយើងបានតុបតែងលំអមេឃជាន់ក្រោមដោយហ្វូងតារា និងការពារ(អំពីស្ហៃតន)។ នោះគឺជាការកំណត់របស់ម្ចាស់ដែលមហាខ្លាំងពូកែ មហាដឹង។

១៣-តែប្រសិនបើពួកគេបានបដិសេធ ដូច្នេះចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ខ្ញុំបានដាស់តឿនព្រមានពួកអ្នកនូវទារុណកម្មមួយ ដូចជាទារុណកម្ម(ដែលធ្លាក់ទៅលើ)ក្រុមអាដ និងក្រុមសាមូដដែរ។

១៤-នៅពេលដែលបណ្តាអ្នកនាំសារបានមកដល់ពួកគេ(ក្រុមអាដនិងសាមូដ)ទាំងមុនពួកគេ និងក្រោយពួកគេ(ដោយបានពោលថាៈ) ចូរពួកអ្នកកុំគោរពសក្ការៈផ្សេងពីអល់ឡោះឱ្យសោះ។ ពួកគេបានតបវិញថាៈ ប្រសិនបើម្ចាស់របស់ពួកយើងមានចេតនាទ្រង់ពិតជាបញ្ចុះម៉ាឡាអ៊ីកាត់(ធ្វើជាអ្នកនាំសារ)។ ដូច្នេះ ពិតប្រាកដណាស់ ពួកយើងគ្មានជំនឿនឹងអ្វីដែលគេបានបញ្ជូនវាមកឱ្យពួកអ្នកនោះឡើយ។

۞ قُلۡ أَئِنَّكُمۡ لَتَكۡفُرُونَ بِٱلَّذِي خَلَقَ ٱلۡأَرۡضَ
فِي يَوۡمَيۡنِ وَتَجۡعَلُونَ لَهُۥٓ أَندَادٗاۚ ذَٰلِكَ رَبُّ
ٱلۡعَٰلَمِينَ ﴿٩﴾

وَجَعَلَ فِيهَا رَوَٰسِيَ مِن فَوۡقِهَا وَبَٰرَكَ فِيهَا
وَقَدَّرَ فِيهَآ أَقۡوَٰتَهَا فِيٓ أَرۡبَعَةِ أَيَّامٖ سَوَآءٗ
لِّلسَّآئِلِينَ ﴿١٠﴾

ثُمَّ ٱسۡتَوَىٰٓ إِلَى ٱلسَّمَآءِ وَهِيَ دُخَانٞ فَقَالَ لَهَا
وَلِلۡأَرۡضِ ٱئۡتِيَا طَوۡعًا أَوۡ كَرۡهٗا قَالَتَآ أَتَيۡنَا
طَآئِعِينَ ﴿١١﴾

فَقَضَىٰهُنَّ سَبۡعَ سَمَٰوَاتٖ فِي يَوۡمَيۡنِ وَأَوۡحَىٰ
فِي كُلِّ سَمَآءٍ أَمۡرَهَاۚ وَزَيَّنَّا ٱلسَّمَآءَ ٱلدُّنۡيَا
بِمَصَٰبِيحَ وَحِفۡظٗاۚ ذَٰلِكَ تَقۡدِيرُ ٱلۡعَزِيزِ
ٱلۡعَلِيمِ ﴿١٢﴾

فَإِنۡ أَعۡرَضُواْ فَقُلۡ أَنذَرۡتُكُمۡ صَٰعِقَةٗ مِّثۡلَ
صَٰعِقَةِ عَادٖ وَثَمُودَ ﴿١٣﴾

إِذۡ جَآءَتۡهُمُ ٱلرُّسُلُ مِنۢ بَيۡنِ أَيۡدِيهِمۡ وَمِنۡ
خَلۡفِهِمۡ أَلَّا تَعۡبُدُوٓاْ إِلَّا ٱللَّهَۖ قَالُواْ لَوۡ شَآءَ
رَبُّنَا لَأَنزَلَ مَلَٰٓئِكَةٗ فَإِنَّا بِمَآ أُرۡسِلۡتُم بِهِۦ
كَٰفِرُونَ ﴿١٤﴾

فَأَمَّا عَادٌ فَٱسۡتَكۡبَرُواْ فِي ٱلۡأَرۡضِ بِغَيۡرِ ٱلۡحَقِّ
وَقَالُواْ مَنۡ أَشَدُّ مِنَّا قُوَّةًۖ أَوَلَمۡ يَرَوۡاْ أَنَّ
ٱللَّهَ ٱلَّذِي خَلَقَهُمۡ هُوَ أَشَدُّ مِنۡهُمۡ قُوَّةٗۖ وَكَانُواْ
بِـَٔايَٰتِنَا يَجۡحَدُونَ ﴿١٥﴾

១៥-រីឯក្រុមអាដវិញ គឺពួកគេបានក្រអឺតក្រទមនៅលើផែនដីដោយមិនត្រឹមត្រូវឡើយ ។ ហើយពួកគេបាននិយាយថាៈ តើមានអ្នកណាដែលខ្លាំងជាងពួកយើងទៅទៀតនោះ? តើពួកគេមិនបានឃើញទេឬថា ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកដែលបានបង្កើតពួកគេ ទ្រង់ជាអ្នកខ្លាំងជាងពួកគេនោះ? ហើយពួកគេធ្លាប់បានប្រឆាំងនឹងបណ្តាភស្តុតាងរបស់យើង ។

فَأَرۡسَلۡنَا عَلَيۡهِمۡ رِيحٗا صَرۡصَرٗا فِيٓ أَيَّامٖ نَّحِسَاتٖ
لِّنُذِيقَهُمۡ عَذَابَ ٱلۡخِزۡيِ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَاۖ
وَلَعَذَابُ ٱلۡأٓخِرَةِ أَخۡزَىٰۖ وَهُمۡ لَا
يُنصَرُونَ ﴿١٦﴾

១៦-ហើយយើងបានបញ្ជូនខ្យល់ព្យុះដ៏ខ្លាំងក្លាបក់បោកទៅលើពួកគេក្នុងរយៈពេលជាច្រើនថ្ងៃបន្តបន្ទាប់គ្នា ដើម្បីយើងឱ្យពួកគេភ្លក្សទារុណកម្មដ៏អាម៉ាស់ក្នុងការរស់នៅលើលោកិយនេះ ។ រីឯទារុណកម្មនៅថ្ងៃបរលោកវិញគឺអាម៉ាស់ជាងនេះទៅទៀត ហើយពួកគេមិនត្រូវបានគេជួយឡើយ ។

وَأَمَّا ثَمُودُ فَهَدَيۡنَٰهُمۡ فَٱسۡتَحَبُّواْ ٱلۡعَمَىٰ عَلَى
ٱلۡهُدَىٰ فَأَخَذَتۡهُمۡ صَٰعِقَةُ ٱلۡعَذَابِ ٱلۡهُونِ
بِمَا كَانُواْ يَكۡسِبُونَ ﴿١٧﴾

១៧-ហើយចំណែកឯក្រុមសាមូដ គឺយើងបានចង្អុលបង្ហាញពួកគេ តែពួកគេបែរជាពេញចិត្តនឹងភាពងងឹតជាងការចង្អុលបង្ហាញទៅវិញ ។ ហើយរន្ទះនៃទារុណកម្មដ៏អាម៉ាស់បានឆក់យកជីវិតពួកគេដោយសារតែអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត ។

وَنَجَّيۡنَا ٱلَّذِينَ ءَامَنُواْ وَكَانُواْ يَتَّقُونَ ﴿١٨﴾

១៨-ហើយយើងបានជួយសង្គ្រោះបណ្តាអ្នកដែលមានជំនឿដែលពួកគេធ្លាប់បានកោតខ្លាចយើង ។

وَيَوۡمَ يُحۡشَرُ أَعۡدَآءُ ٱللَّهِ إِلَى ٱلنَّارِ فَهُمۡ
يُوزَعُونَ ﴿١٩﴾

១៩-ហើយ(ចូរចងចាំ)នៅថ្ងៃដែលសត្រូវរបស់អល់ឡោះនឹងត្រូវគេប្រមូលទៅកាន់ភ្លើងនរក ពេលនោះពួកគេនឹងត្រូវគេរុញបញ្ចូលទៅក្នុងភ្លើងនរក ។

حَتَّىٰٓ إِذَا مَا جَآءُوهَا شَهِدَ عَلَيۡهِمۡ سَمۡعُهُمۡ
وَأَبۡصَٰرُهُمۡ وَجُلُودُهُم بِمَا كَانُواْ
يَعۡمَلُونَ ﴿٢٠﴾

២០-លុះនៅពេលពួកគេបានទៅដល់ភ្លើងនរកនោះ ត្រចៀកនិងភ្នែក ហើយនិងស្បែករបស់ពួកគេធ្វើសាក្សីទៅលើពួកគេនូវអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត ។

وَقَالُواْ لِجُلُودِهِمۡ لِمَ شَهِدتُّمۡ عَلَيۡنَاۖ قَالُوٓاْ
أَنطَقَنَا ٱللَّهُ ٱلَّذِيٓ أَنطَقَ كُلَّ شَيۡءٖ وَهُوَ
خَلَقَكُمۡ أَوَّلَ مَرَّةٖ وَإِلَيۡهِ تُرۡجَعُونَ ﴿٢١﴾

២១-ហើយពួកគេបាននិយាយទៅកាន់ស្បែករបស់ពួកគេថាៈ ហេតុអ្វីបានជាពួកឯងធ្វើសាក្សីប្រឆាំងនឹងយើង? ស្បែកបានតបថាៈ អល់ឡោះជាអ្នកដែលធ្វើឱ្យអ្វីគ្រប់យ៉ាងចេះនិយាយនោះហើយបានធ្វើឱ្យពួកយើងចេះនិយាយ ។ ហើយទ្រង់ជាអ្នកដែលបានបង្កើតពួក

អ្នកជាលើកដំបូង ហើយពួកអ្នកក៏នឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់វិញដែរ ។

وَمَا كُنتُمْ تَسْتَتِرُونَ أَن يَشْهَدَ عَلَيْكُمْ سَمْعُكُمْ وَلَآ أَبْصَـٰرُكُمْ وَلَا جُلُودُكُمْ وَلَـٰكِن ظَنَنتُمْ أَنَّ ٱللَّهَ لَا يَعْلَمُ كَثِيرًا مِّمَّا تَعْمَلُونَ ﴿٢٢﴾

២២-ពួកអ្នកមិនអាចលាក់បាំងពីត្រចៀករបស់ពួកអ្នក និងភ្នែករបស់ពួកអ្នក ហើយនិងស្បែករបស់ពួកអ្នកពីការធ្វើសាក្សីប្រឆាំងនឹងពួកអ្នកបានឡើយ ។ ផ្ទុយទៅវិញ ពួកអ្នកបានគិតថា អល់ឡោះមិនដឹងច្រើនឡើយអំពីអ្វីដែលពួកអ្នកប្រព្រឹត្តនោះ ។

وَذَٰلِكُمْ ظَنُّكُمُ ٱلَّذِى ظَنَنتُم بِرَبِّكُمْ أَرْدَىٰكُمْ فَأَصْبَحْتُم مِّنَ ٱلْخَـٰسِرِينَ ﴿٢٣﴾

២៣-ហើយនោះគឺជាការគិត(ផ្ដេសផ្ដាស)របស់ពួកអ្នកដែលបានគិតចំពោះម្ចាស់របស់ពួកអ្នក ដោយវាបានធ្វើឱ្យពួកអ្នកវិនាសអន្តរាយ ។ ហើយពួកអ្នកក៏បានក្លាយជាពួកដែលខាតបង់ ។

فَإِن يَصْبِرُوا۟ فَٱلنَّارُ مَثْوًى لَّهُمْ ۖ وَإِن يَسْتَعْتِبُوا۟ فَمَا هُم مِّنَ ٱلْمُعْتَبِينَ ﴿٢٤﴾

២៤-ហើយទោះបីជាពួកគេអត់ធ្មត់(នឹងទារុណកម្ម)យ៉ាងណាក៏ដោយ ក៏ភ្លើងនរកនៅតែជាលំនៅដ្ឋានសម្រាប់ពួកគេដែរ ។ តែទោះបីជាពួកគេទទួចសុំការប្រោសប្រណី(ពីអល់ឡោះ)យ៉ាងណាក្ដីក៏ពួកគេនៅតែមិនស្ថិតនៅក្នុងចំណោមអ្នកដែលត្រូវបានគេប្រោសប្រណីដែរ ។

۞ وَقَيَّضْنَا لَهُمْ قُرَنَآءَ فَزَيَّنُوا۟ لَهُم مَّا بَيْنَ أَيْدِيهِمْ وَمَا خَلْفَهُمْ وَحَقَّ عَلَيْهِمُ ٱلْقَوْلُ فِىٓ أُمَمٍ قَدْ خَلَتْ مِن قَبْلِهِم مِّنَ ٱلْجِنِّ وَٱلْإِنسِ ۖ إِنَّهُمْ كَانُوا۟ خَـٰسِرِينَ ﴿٢٥﴾

២៥-ហើយយើងបានរៀបចំឱ្យពួកគេមានគូកនដ៏ជិតស្និទ្ធ(ស្ឆៃតននិងមនុស្សលោក) រួចមកគូកននោះបានលំអសម្រាប់ពួកគេនូវអ្វីដែលនៅចំពោះមុខពួកគេ(អំពើអាក្រក់នៅក្នុងលោកិយនេះ) និងអ្វីដែលនៅខាងក្រោយពួកគេ(មិនជឿនឹងថ្ងៃបរលោក) ។ ហើយទារុណកម្មបានធ្លាក់ទៅលើពួកគេ ដូចជាទារុណកម្មដែលបានធ្លាក់ទៅលើប្រជាជាតិដែលបានកន្លងផុតមុនពួកគេអំពីជិន និងមនុស្សលោកដែរ ។ ពិតប្រាកដណាស់ ពួកគេគឺជាពួកដែលខាតបង់ ។

وَقَالَ ٱلَّذِينَ كَفَرُوا۟ لَا تَسْمَعُوا۟ لِهَـٰذَا ٱلْقُرْءَانِ وَٱلْغَوْا۟ فِيهِ لَعَلَّكُمْ تَغْلِبُونَ ﴿٢٦﴾

២៦-ហើយពួកដែលគ្មានជំនឿបាននិយាយថាៈ ចូរពួកអ្នកកុំស្ដាប់គម្ពីរគួរអាននេះឱ្យសោះ តែពួកអ្នកត្រូវស្រែកឡូឡានៅពេលគេសូត្រវា សង្ឃឹមថាពួកអ្នកនឹងទទួលជោគជ័យ ។

فَلَنُذِيقَنَّ ٱلَّذِينَ كَفَرُوا۟ عَذَابًا شَدِيدًا وَلَنَجْزِيَنَّهُمْ أَسْوَأَ ٱلَّذِى كَانُوا۟ يَعْمَلُونَ ﴿٢٧﴾

២៧-ដូច្នេះយើងពិតជានឹងឱ្យពួកដែលគ្មានជំនឿភ្លក្សនូវទារុណកម្មដ៏ធ្ងន់ធ្ងរ ហើយយើងពិតជានឹងតបស្នងដល់ពួកគេអាក្រក់ជាងអ្វីដែលពួកគេបានប្រព្រឹត្តទៅទៀត ។

ذَٰلِكَ جَزَآءُ أَعۡدَآءِ ٱللَّهِ ٱلنَّارُۖ لَهُمۡ فِيهَا دَارُ ٱلۡخُلۡدِۖ جَزَآءَۢ بِمَا كَانُواْ بِـَٔايَٰتِنَا يَجۡحَدُونَ ﴿٢٨﴾

២៨-ការតបស្នងសម្រាប់សត្រូវរបស់អល់ឡោះនោះគឺភ្លើងនរក។ នៅក្នុងនោះជាកន្លែងអមតៈសម្រាប់ពួកគេ។ ជាការតបស្នងនូវអ្វីដែលពួកគេធ្លាប់បានប្រឆាំងនឹងបណ្តាភស្តុតាងរបស់យើង។

وَقَالَ ٱلَّذِينَ كَفَرُواْ رَبَّنَآ أَرِنَا ٱلَّذَيۡنِ أَضَلَّانَا مِنَ ٱلۡجِنِّ وَٱلۡإِنسِ نَجۡعَلۡهُمَا تَحۡتَ أَقۡدَامِنَا لِيَكُونَا مِنَ ٱلۡأَسۡفَلِينَ ﴿٢٩﴾

២៩-ហើយពួកដែលគ្មានជំនឿបាននិយាយថាៈ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាបង្ហាញឱ្យពួកយើងឃើញពួកជិន និងមនុស្សលោកដែលធ្វើឱ្យពួកយើងវង្វេងផង ពួកយើងនឹងដាក់ពួកគេទាំងពីរក្រោមបាតជើងរបស់ពួកយើងនិងដើម្បីឱ្យពួកគេទាំងពីរក្លាយជាអ្នកដែលស្ថិតនៅក្នុងចំណោមពួកដែលនៅបាតនរកក្រោមគេបង្អស់។

إِنَّ ٱلَّذِينَ قَالُواْ رَبُّنَا ٱللَّهُ ثُمَّ ٱسۡتَقَٰمُواْ تَتَنَزَّلُ عَلَيۡهِمُ ٱلۡمَلَٰٓئِكَةُ أَلَّا تَخَافُواْ وَلَا تَحۡزَنُواْ وَأَبۡشِرُواْ بِٱلۡجَنَّةِ ٱلَّتِي كُنتُمۡ تُوعَدُونَ ﴿٣٠﴾

៣០-ពិតប្រាកដណាស់ បណ្តាអ្នកដែលបាននិយាយថាៈ ម្ចាស់របស់ពួកយើងគឺអល់ឡោះ បន្ទាប់មកពួកគេបានប្រតិបត្តិយ៉ាងខ្ជាប់ខ្ជួន(តាមបទបញ្ជារបស់ទ្រង់)នោះ ម៉ាឡាអ៊ីកាត់នឹងចុះមកកាន់ពួកគេ (នៅពេលដែលពួកគេហៀបនឹងស្លាប់)ដោយពោលថាៈ សូមពួកអ្នកកុំខ្លាច ហើយកុំកើតទុក្ខឱ្យសោះ។ ហើយសូមពួកអ្នករីករាយជាមួយនឹងឋានសួគ៌ដែលគេធ្លាប់បានសន្យាចំពោះពួកអ្នកចុះ។

نَحۡنُ أَوۡلِيَآؤُكُمۡ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَا وَفِي ٱلۡأٓخِرَةِۖ وَلَكُمۡ فِيهَا مَا تَشۡتَهِيٓ أَنفُسُكُمۡ وَلَكُمۡ فِيهَا مَا تَدَّعُونَ ﴿٣١﴾

៣១-ពួកយើង(ម៉ាឡាអ៊ីកាត់)គឺជាអ្នកថែរក្សាពួកអ្នកក្នុងការរស់នៅលើលោកិយ និងនៅថ្ងៃបរលោក(តាមបទបញ្ជារបស់អល់ឡោះ)។ ហើយនៅក្នុងឋានសួគ៌នោះ ពួកអ្នកនឹងទទួលបាននូវអ្វីដែលពួកអ្នកប៉ងប្រាថ្នា ហើយនៅក្នុងនោះដែរពួកអ្នកនឹងទទួលបាននូវអ្វីដែលពួកអ្នកសុំ។

نُزُلٗا مِّنۡ غَفُورٖ رَّحِيمٖ ﴿٣٢﴾

៣២-វាគឺជាអំណោយស្វាគមន៍ពីម្ចាស់ដែលមហាអភ័យទោស មហាអាណិតស្រឡាញ់។

وَمَنۡ أَحۡسَنُ قَوۡلٗا مِّمَّن دَعَآ إِلَى ٱللَّهِ وَعَمِلَ صَٰلِحٗا وَقَالَ إِنَّنِي مِنَ ٱلۡمُسۡلِمِينَ ﴿٣٣﴾

៣៣-ហើយគ្មានអ្នកណាម្នាក់ដែលមានពាក្យសំដីល្អប្រសើរជាងអ្នកដែលបានអំពាវនាវទៅចំពោះអល់ឡោះ និងបានសាងអំពើល្អត្រឹមត្រូវ ព្រមទាំងបាននិយាយថាៈ ពិតប្រាកដណាស់ ខ្ញុំជាមនុស្សម្នាក់ក្នុងចំណោមអ្នកមូស្លីមទាំងឡាយនោះឡើយ។

وَلَا تَسۡتَوِي ٱلۡحَسَنَةُ وَلَا ٱلسَّيِّئَةُۚ ٱدۡفَعۡ بِٱلَّتِي هِيَ أَحۡسَنُ فَإِذَا ٱلَّذِي بَيۡنَكَ وَبَيۡنَهُۥ عَدَٰوَةٞ

៣៤-ប្រការល្អនិងប្រការអាក្រក់មិនអាចស្មើគ្នាបានឡើយ។ ចូរអ្នក(មូហាំម៉ាត់)តបតវិញចុះនូវអ្វីដែលល្អបំផុត(ពេលគេធ្វើអំពើមិនគួរគប្បីចំពោះអ្នក) ពេលនោះអ្នកដែលជាសត្រូវរបស់

كَأَنَّهُۥ وَلِيٌّ حَمِيمٌ ٣٤

អ្នកនឹងក្លាយជាមិត្តជិតស្និទ្ធរបស់អ្នកជាមិនខានឡើយ ។

وَمَا يُلَقَّىٰهَآ إِلَّا ٱلَّذِينَ صَبَرُواْ وَمَا يُلَقَّىٰهَآ إِلَّا ذُو حَظٍّ عَظِيمٍ ٣٥

៣៥-ហើយគ្មានអ្នកណាម្នាក់ត្រូវបានគេផ្តល់នូវប្រការល្អនេះឡើយ លើកលែងតែបណ្តាអ្នកដែលអត់ធ្មត់ ហើយក៏គ្មានអ្នកណាម្នាក់ត្រូវបានគេផ្តល់នូវប្រការល្អនេះដែរ លើកលែងតែអ្នកដែលមានសំណាងដ៏ធំប៉ុណ្ណោះ ។

وَإِمَّا يَنزَغَنَّكَ مِنَ ٱلشَّيْطَٰنِ نَزْغٌ فَٱسْتَعِذْ بِٱللَّهِ ۖ إِنَّهُۥ هُوَ ٱلسَّمِيعُ ٱلْعَلِيمُ ٣٦

៣៦-តែប្រសិនបើមានការញុះញង់អ្នក(មូហាំម៉ាត់)ពីសំណាក់ស្ហែតននោះ ចូរអ្នកសុំពីអល់ឡោះឱ្យកំចាំងពីវាចុះ ។ ពិតប្រាកដណាស់ ទ្រង់មហាឮ មហាដឹង ។

وَمِنْ ءَايَٰتِهِ ٱلَّيْلُ وَٱلنَّهَارُ وَٱلشَّمْسُ وَٱلْقَمَرُ ۚ لَا تَسْجُدُواْ لِلشَّمْسِ وَلَا لِلْقَمَرِ وَٱسْجُدُواْ لِلَّهِ ٱلَّذِى خَلَقَهُنَّ إِن كُنتُمْ إِيَّاهُ تَعْبُدُونَ ٣٧

៣៧-ហើយក្នុងចំណោមភស្តុតាងទាំងឡាយ(ដែលបញ្ជាក់ពីអានុភាព)របស់ទ្រង់នោះ គឺពេលយប់និងពេលថ្ងៃ ព្រះអាទិត្យ និងព្រះច័ន្ទ ។ ចូរពួកអ្នកកុំស៊ូជូតចំពោះព្រះអាទិត្យ និងព្រះច័ន្ទឱ្យសោះ តែពួកអ្នកត្រូវស៊ូជូតចំពោះអល់ឡោះដែលជាអ្នកបង្កើតពួកវាវិញ ប្រសិនបើពួកអ្នកជាអ្នកដែលគោរពសក្ការៈចំពោះទ្រង់តែមួយមែននោះ ។

فَإِنِ ٱسْتَكْبَرُواْ فَٱلَّذِينَ عِندَ رَبِّكَ يُسَبِّحُونَ لَهُۥ بِٱلَّيْلِ وَٱلنَّهَارِ وَهُمْ لَا يَسْـَٔمُونَ ۩ ٣٨

៣៨-តែទោះបីពួកគេ(ពួកមូស្ហ្គីគីន)ក្រអឺតក្រទម(មិនគោរពសក្ការៈចំពោះអល់ឡោះ)ក៏ដោយ ក៏បណ្តាអ្នក(ម៉ាឡាអ៊ីកាត់)ដែលនៅក្បែរម្ចាស់របស់អ្នកនៅតែលើកតម្កើងដោយសរសើរចំពោះទ្រង់ទាំងយប់ទាំងថ្ងៃដែរ ដោយពួកគេមិនដែលធុញទ្រាន់ឡើយ ។

وَمِنْ ءَايَٰتِهِۦٓ أَنَّكَ تَرَى ٱلْأَرْضَ خَٰشِعَةً فَإِذَآ أَنزَلْنَا عَلَيْهَا ٱلْمَآءَ ٱهْتَزَّتْ وَرَبَتْ ۚ إِنَّ ٱلَّذِىٓ أَحْيَاهَا لَمُحْىِ ٱلْمَوْتَىٰٓ ۚ إِنَّهُۥ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ٣٩

៣៩-ហើយក្នុងចំណោមភស្តុតាងរបស់ទ្រង់ជាច្រើនទៀតនោះ គឺពិតប្រាកដណាស់ អ្នកឃើញផែនដីរាំងស្ងួតគ្មានជីជាតិ ។ តែនៅពេលដែលយើងបានបញ្ចុះទឹកភ្លៀងមកលើផែនដីនោះ វាក៏រស់រានមានជីវិតនិងធ្វើឱ្យរុក្ខជាតិដុះលូតលាស់ឡើងវិញ ។ ពិតប្រាកដណាស់ អ្នកដែលធ្វើឱ្យផែនដីរស់ឡើងវិញ(មានជីជាតិ) គឺជាអ្នកដែលធ្វើឱ្យអ្នកដែលស្លាប់រស់ឡើងវិញ ។ ពិតប្រាកដណាស់ ទ្រង់មានអានុភាពលើអ្វីៗទាំងអស់ ។

إِنَّ ٱلَّذِينَ يُلْحِدُونَ فِىٓ ءَايَٰتِنَا لَا يَخْفَوْنَ عَلَيْنَآ ۗ أَفَمَن يُلْقَىٰ فِى ٱلنَّارِ خَيْرٌ أَم مَّن يَأْتِىٓ

៤០-ពិតប្រាកដណាស់ ពួកដែលងាកចេញ(បដិសេធ ប្រមាថ និងកែប្រែ)ពីអាយ៉ាត់ៗរបស់យើងគឺពួកគេមិនអាចលាក់បាំងពីយើងបានឡើយ ។ ដូច្នេះ តើអ្នកដែលត្រូវគេបោះចូលទៅក្នុងភ្លើង

ءَامِنًا يَوْمَ ٱلْقِيَـٰمَةِ ۚ ٱعْمَلُوا۟ مَا شِئْتُمْ ۖ إِنَّهُۥ بِمَا تَعْمَلُونَ بَصِيرٌ ﴿٤٠﴾

إِنَّ ٱلَّذِينَ كَفَرُوا۟ بِٱلذِّكْرِ لَمَّا جَآءَهُمْ ۖ وَإِنَّهُۥ لَكِتَـٰبٌ عَزِيزٌ ﴿٤١﴾

لَّا يَأْتِيهِ ٱلْبَـٰطِلُ مِنۢ بَيْنِ يَدَيْهِ وَلَا مِنْ خَلْفِهِۦ ۖ تَنزِيلٌ مِّنْ حَكِيمٍ حَمِيدٍ ﴿٤٢﴾

مَّا يُقَالُ لَكَ إِلَّا مَا قَدْ قِيلَ لِلرُّسُلِ مِن قَبْلِكَ ۚ إِنَّ رَبَّكَ لَذُو مَغْفِرَةٍ وَذُو عِقَابٍ أَلِيمٍ ﴿٤٣﴾

وَلَوْ جَعَلْنَـٰهُ قُرْءَانًا أَعْجَمِيًّا لَّقَالُوا۟ لَوْلَا فُصِّلَتْ ءَايَـٰتُهُۥٓ ۖ ءَا۬عْجَمِىٌّ وَعَرَبِىٌّ ۗ قُلْ هُوَ لِلَّذِينَ ءَامَنُوا۟ هُدًى وَشِفَآءٌ ۖ وَٱلَّذِينَ لَا يُؤْمِنُونَ فِىٓ ءَاذَانِهِمْ وَقْرٌ وَهُوَ عَلَيْهِمْ عَمًى ۚ أُو۟لَـٰٓئِكَ يُنَادَوْنَ مِن مَّكَانٍۭ بَعِيدٍ ﴿٤٤﴾

وَلَقَدْ ءَاتَيْنَا مُوسَى ٱلْكِتَـٰبَ فَٱخْتُلِفَ فِيهِ ۗ وَلَوْلَا كَلِمَةٌ سَبَقَتْ مِن رَّبِّكَ لَقُضِىَ بَيْنَهُمْ ۚ وَإِنَّهُمْ لَفِى شَكٍّ مِّنْهُ مُرِيبٍ ﴿٤٥﴾

នរកប្រសើរជាង ឬអ្នកដែលមកដោយសុវត្ថិភាពនៅថ្ងៃបរលោកប្រសើរជាង? ចូរពួកអ្នកធ្វើចុះនូវអ្វីដែលពួកអ្នកចង់។ ពិតប្រាកដណាស់ ទ្រង់ឃើញបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

៤១-ពិតប្រាកដណាស់ ពួកដែលប្រឆាំងនឹងគម្ពីរគួរអាននៅពេលដែលវាបានមកដល់ពួកគេនោះ(ពួកគេនឹងទទួលទារុណកម្ម)។ ពិតប្រាកដណាស់ គម្ពីរគួរអានជាគម្ពីរដ៏ពិសិដ្ឋ។

៤២-ប្រការមិនពិតមិនអាចមកដល់វា(គម្ពីរគួរអាន)ទាំងនៅពីមុខវា និងពីក្រោយវាឡើយ។ វាជាការបញ្ចុះមកពីម្ចាស់មហាគតិបណ្ឌិត ជាទីកោតសរសើរបំផុត។

៤៣-គេ(អ្នកគ្មានជំនឿ)មិននិយាយអ្វីទៅកាន់អ្នក(មូហាំម៉ាត់)ក្រៅពីអ្វីដែលគេបាននិយាយទៅកាន់បណ្ដាអ្នកនាំសារមុនអ្នកឡើយ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាអ្នកដែលមានការអភ័យទោស និងជាអ្នកដែលមានទណ្ឌកម្មដ៏ឈឺចាប់។

៤៤-ហើយប្រសិនបើយើងបានបញ្ចុះវា(គម្ពីរគួរអាន)ជាភាសាផ្សេង(ក្រៅពីភាសាអារ៉ាប់) ពួកគេ(ពួកគ្មានជំនឿ)ពិតជានិយាយថាៈ ហេតុអ្វីបានជាគេមិនពន្យល់លំអិតនូវអាយ៉ាត់ៗរបស់វា(ដើម្បីឱ្យពួកយើងបានយល់ផង)? តើអាចទេវាជាភាសាផ្សេង ហើយ(អ្នកនាំសារ)ជាជនជាតិអារ៉ាប់នោះ? ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ វាគឺជាការចង្អុលបង្ហាញ និងជាឱសថព្យាបាលសម្រាប់បណ្ដាអ្នកដែលមានជំនឿ។ រីឯពួកដែលគ្មានជំនឿវិញ នៅក្នុងត្រចៀករបស់ពួកគេមានឆ្អកចុក ហើយវាគឺជាភាពងងឹតចំពោះពួកគេ។ ពួកទាំងនោះ(ហាក់ដូចជា)ត្រូវគេហៅពីទីកន្លែងដ៏ឆ្ងាយ។

៤៥-ហើយជាការពិតណាស់ យើងបានផ្តល់ឱ្យមូសានូវគម្ពីរ(តាវរ៉ត) បន្ទាប់មកមានគេខ្វែងគំនិតគ្នានៅក្នុងវា។ ហើយប្រសិនបើគ្មានការកំណត់(ទារុណកម្ម)ជាមុនពីម្ចាស់របស់អ្នកទេ គេពិតជានឹងកាត់សេចក្តីរវាងពួកគេ(ដាក់ទារុណកម្មក្នុងលោកិយ)ជាមិនខាន។ ហើយពិតប្រាកដណាស់ ពួកគេស្ថិតក្នុងភាពមន្ទិលសង្ស័យយ៉ាងខ្លាំងអំពីវា(គម្ពីរគួរអាន)។

مَّنْ عَمِلَ صَٰلِحًا فَلِنَفْسِهِۦ ۖ وَمَنْ أَسَآءَ
فَعَلَيْهَا ۗ وَمَا رَبُّكَ بِظَلَّٰمٍ لِّلْعَبِيدِ ﴿٤٦﴾

៤៦-អ្នកណាហើយដែលបានសាងអំពើល្អ គឺសម្រាប់ខ្លួនឯង ហើយអ្នកណាដែលបានប្រព្រឹត្តអំពើអាក្រក់វិញគឺវានឹងធ្លាក់ទៅលើខ្លួនឯង។ ហើយម្ចាស់របស់អ្នកមិនមែនជាអ្នកបំពានទៅលើខ្ញុំណាម្នាក់ឡើយ។

۞ إِلَيْهِ يُرَدُّ عِلْمُ ٱلسَّاعَةِ ۚ وَمَا تَخْرُجُ مِن
ثَمَرَٰتٍ مِّنْ أَكْمَامِهَا وَمَا تَحْمِلُ مِنْ أُنثَىٰ
وَلَا تَضَعُ إِلَّا بِعِلْمِهِۦ ۚ وَيَوْمَ يُنَادِيهِمْ
أَيْنَ شُرَكَآءِى قَالُوٓاْ ءَاذَنَّٰكَ مَا مِنَّا مِن
شَهِيدٍ ﴿٤٧﴾

៤៧-ដំណឹងនៃថ្ងៃបរលោកគឺត្រូវវិលត្រឡប់ទៅចំពោះទ្រង់តែមួយគត់។ ហើយគ្រប់ផ្លែឈើដែលចេញពីស្រទាប់របស់វា និងសត្វលោកភេទញីណាមានផ្ទៃពោះនិងកើតកូននោះ គឺសុទ្ធតែស្ថិតក្រោមការដឹងរបស់ទ្រង់។ ហើយនៅថ្ងៃដែលទ្រង់ហៅពួកគេ(ពួកមូស្ហ្ទីគីន) ថាៈ តើឯណាទៅដៃគូរបស់យើង(ដែលពួកអ្នកធ្លាប់គោរពសក្ការៈផ្សេងពីយើង)នោះ? ពួកគេបានតបវិញថាៈ ពួកយើងសូមជំរាបទ្រង់ថាៈ គ្មាននរណាម្នាក់ក្នុងចំណោមពួកយើងធ្វើសាក្សី(ថាទ្រង់មានដៃគូ)នោះឡើយ។

وَضَلَّ عَنْهُم مَّا كَانُواْ يَدْعُونَ مِن قَبْلُ ۖ
وَظَنُّواْ مَا لَهُم مِّن مَّحِيصٍ ﴿٤٨﴾

៤៨-ហើយអ្វីដែលពួកគេធ្លាប់បានគោរពសក្ការៈពីមុន(នៅក្នុងលោកិយ)នោះបានបាត់បង់ពីពួកគេ។ ហើយពួកគេដឹងយ៉ាងច្បាស់ថាៈ សម្រាប់ពួកគេគ្មានកន្លែងគេចចេញ(ពីទារុណកម្ម)បានឡើយ។

لَّا يَسْـَٔمُ ٱلْإِنسَٰنُ مِن دُعَآءِ ٱلْخَيْرِ وَإِن مَّسَّهُ
ٱلشَّرُّ فَيَـُٔوسٌ قَنُوطٌ ﴿٤٩﴾

៤៩-មនុស្សលោកមិនធុញទ្រាន់ក្នុងការបួងសួងសុំប្រការល្អ (ទ្រព្យសម្បត្តិ និងភាពសុខសាន្តពីអល់ឡោះ)ទេ តែប្រសិនបើប្រការអាក្រក់(ភាពក្រីក្រនិងទុក្ខលំបាក)បានធ្លាក់មកលើគេវិញ ពេលនោះគេនឹងអស់សង្ឃឹមយ៉ាងខ្លាំង។

وَلَئِنْ أَذَقْنَٰهُ رَحْمَةً مِّنَّا مِنۢ بَعْدِ ضَرَّآءَ مَسَّتْهُ
لَيَقُولَنَّ هَٰذَا لِى وَمَآ أَظُنُّ ٱلسَّاعَةَ قَآئِمَةً
وَلَئِن رُّجِعْتُ إِلَىٰ رَبِّىٓ إِنَّ لِى عِندَهُۥ لَلْحُسْنَىٰ ۚ
فَلَنُنَبِّئَنَّ ٱلَّذِينَ كَفَرُواْ بِمَا عَمِلُواْ وَلَنُذِيقَنَّهُم
مِّنْ عَذَابٍ غَلِيظٍ ﴿٥٠﴾

៥០-តែប្រសិនបើយើងឱ្យគេភ្លក្សនូវក្តីមេត្តាករុណាពីយើង បន្ទាប់ពីគ្រោះមហន្តរាយបានបៀតបៀនគេហើយនោះ គេពិតជានឹងនិយាយថាៈ នេះដោយសារតែគុណសម្បត្តិរបស់ខ្ញុំ ហើយខ្ញុំមិនគិតថា ថ្ងៃបរលោកនឹងកើតឡើងឡើយ។ ហើយប្រសិនបើខ្ញុំត្រូវបានគេឱ្យវិលត្រឡប់ទៅកាន់ម្ចាស់របស់ខ្ញុំវិញនោះ ពិតប្រាកដណាស់ខ្ញុំនឹងទទួលបាននូវប្រការល្អ(ឋានសួគ៌)ដែលមាននៅជាមួយនឹងទ្រង់។ ដូច្នេះ យើងប្រាកដជានឹងប្រាប់ពួកដែលគ្មានជំនឿនូវអ្វីដែលពួកគេបានប្រព្រឹត្ត។ ហើយយើងប្រាកដជានឹងឱ្យពួកគេភ្លក្សនូវទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។

وَإِذَآ أَنۡعَمۡنَا عَلَى ٱلۡإِنسَٰنِ أَعۡرَضَ وَنَـَٔا بِجَانِبِهِۦ وَإِذَا مَسَّهُ ٱلشَّرُّ فَذُو دُعَآءٍ عَرِيضٖ ٥١

៥១-ហើយនៅពេលដែលយើងបានប្រទាននៀកម៉ាត់ដល់មនុស្សលោក គេបែរជាប្រឆាំង និងគេចចេញឆ្ងាយទៅវិញ។ តែនៅពេលដែលផលអាក្រក់បានធ្លាក់មកលើគេវិញនោះ គឺគេបួងសួងសុំយ៉ាងច្រើន(ពីយើង)។

قُلۡ أَرَءَيۡتُمۡ إِن كَانَ مِنۡ عِندِ ٱللَّهِ ثُمَّ كَفَرۡتُم بِهِۦ مَنۡ أَضَلُّ مِمَّنۡ هُوَ فِي شِقَاقِۭ بَعِيدٖ ٥٢

៥២-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើវា(គម្ពីរគួរអាន)មកពីអល់ឡោះ ក្រោយមកពួកអ្នកបានបដិសេធនឹងវានោះ តើមានអ្នកណាដែលវង្វេងជាងអ្នកដែលស្ថិតក្នុងភាពវង្វេង(ពីមាគ៌ារបស់អល់ឡោះ)ដ៏ឆ្ងាយនោះ?

سَنُرِيهِمۡ ءَايَٰتِنَا فِي ٱلۡأٓفَاقِ وَفِيٓ أَنفُسِهِمۡ حَتَّىٰ يَتَبَيَّنَ لَهُمۡ أَنَّهُ ٱلۡحَقُّۗ أَوَلَمۡ يَكۡفِ بِرَبِّكَ أَنَّهُۥ عَلَىٰ كُلِّ شَيۡءٖ شَهِيدٌ ٥٣

៥៣-យើងនឹងបង្ហាញឱ្យពួកគេឃើញនូវភស្តុតាងៗរបស់យើង នៅក្នុងពិភពលោកនេះ និងក្នុងខ្លួនរបស់ពួកគេផ្ទាល់រហូតទាល់តែវាជាក់ច្បាស់សម្រាប់ពួកគេថា: ពិតប្រាកដណាស់ វា(គម្ពីរគួរអាន)គឺជាការពិត។ តើម្ចាស់របស់អ្នកមិនគ្រប់គ្រាន់ទេឬ ដែលទ្រង់ពិតជាអ្នកធ្វើសាក្សីលើអ្វីៗទាំងអស់នោះ?

أَلَآ إِنَّهُمۡ فِي مِرۡيَةٖ مِّن لِّقَآءِ رَبِّهِمۡۗ أَلَآ إِنَّهُۥ بِكُلِّ شَيۡءٖ مُّحِيطُۢ ٥٤

៥៤-ចូរដឹងថា ពិតប្រាកដណាស់ ពួកគេស្ថិតនៅក្នុងភាពសង្ស័យអំពីជំនួបនឹងម្ចាស់របស់ពួកគេ។ ចូរដឹងទៀតថា ពិតប្រាកដណាស់ ទ្រង់មហាដឹងជ្រួតជ្រាបនូវអ្វីៗទាំងអស់។

## سورة الشورى

## ជំពូកអាស្ហ៊ូរ៉

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

حمٓ ١

១-ហា មីម

عٓسٓقٓ ٢

២-អ៊ីន ស៊ីន កហ្វ

كَذَٰلِكَ يُوحِيٓ إِلَيۡكَ وَإِلَى ٱلَّذِينَ مِن قَبۡلِكَ ٱللَّهُ ٱلۡعَزِيزُ ٱلۡحَكِيمُ ٣

៣-ដូច្នោះហើយអល់ឡោះដែលមហាខ្លាំងពូកែ មហាគតិបណ្ឌិតដែលបញ្ចុះវ៉ាហ៊ីឱ្យអ្នក(មូហាំម៉ាត់) និងឱ្យបណ្ដាអ្នកនាំសារពីមុនអ្នក។

لَهُۥ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۖ وَهُوَ ٱلۡعَلِيُّ ٱلۡعَظِيمُ ٤

៤-អ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលនៅលើផែនដី គឺជាកម្មសិទ្ធិរបស់ទ្រង់។ ហើយទ្រង់មហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម។

تَكَادُ ٱلسَّمَٰوَٰتُ يَتَفَطَّرۡنَ مِن فَوۡقِهِنَّۚ وَٱلۡمَلَٰٓئِكَةُ يُسَبِّحُونَ بِحَمۡدِ رَبِّهِمۡ وَيَسۡتَغۡفِرُونَ لِمَن فِي ٱلۡأَرۡضِۗ أَلَآ إِنَّ ٱللَّهَ هُوَ ٱلۡغَفُورُ ٱلرَّحِيمُ ٥

៥-មេឃជាច្រើនជាន់ស្ទើរតែបែកធ្លាក់មកនៅលើគ្នា(ដោយសារភាពឧត្តុង្គឧត្តមរបស់អល់ឡោះ) ។ ហើយម៉ាឡាអ៊ីកាត់កំពុងលើកតម្កើងដោយសរសើរទៅចំពោះម្ចាស់របស់ពួកគេ និងសុំពីម្ចាស់របស់ពួកគេឱ្យអភ័យទោសដល់អ្នកដែលនៅលើផែនដី(អ្នកដែលមានជំនឿ) ។ ចូរដឹងថា ពិតប្រាកដណាស់អល់ឡោះ ទ្រង់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَٱلَّذِينَ ٱتَّخَذُواْ مِن دُونِهِۦٓ أَوۡلِيَآءَ ٱللَّهُ حَفِيظٌ عَلَيۡهِمۡ وَمَآ أَنتَ عَلَيۡهِم بِوَكِيلٖ ٦

៦-ហើយពួកដែលយកអ្នកគាំពារផ្សេងពីទ្រង់នោះ អល់ឡោះជាអ្នកឃ្លាំមើលពួកគេ ហើយអ្នក(មូហាំម៉ាត់)មិនមែនជាអ្នកដែលទទួលខុសត្រូវលើពួកគេឡើយ ។

وَكَذَٰلِكَ أَوۡحَيۡنَآ إِلَيۡكَ قُرۡءَانًا عَرَبِيّٗا لِّتُنذِرَ أُمَّ ٱلۡقُرَىٰ وَمَنۡ حَوۡلَهَا وَتُنذِرَ يَوۡمَ ٱلۡجَمۡعِ لَا رَيۡبَ فِيهِۚ فَرِيقٞ فِي ٱلۡجَنَّةِ وَفَرِيقٞ فِي ٱلسَّعِيرِ ٧

៧-ហើយដូច្នោះដែរ យើងបានបញ្ចុះគម្ពីរគួរអានជាភាសាអារ៉ាប់ឱ្យអ្នក(មូហាំម៉ាត់) ដើម្បីឱ្យអ្នកដាស់តឿនព្រមានដល់អ្នកដែលរស់នៅក្នុងទីក្រុងម៉ាក្កះនិងអ្នកដែលរស់នៅជុំវិញវា ហើយនិងដើម្បីឱ្យអ្នកដាស់តឿនព្រមាន(ពីទារុណកម្ម)នៅថ្ងៃប្រមូលផ្តុំ(ថ្ងៃបរលោក)ដែលគ្មានការសង្ស័យចំពោះវាឡើយ ។ មនុស្សមួយក្រុមចូលឋានសួគ៌ និងមួយក្រុមទៀតចូលទៅក្នុងភ្លើងនរកដែលឆេះយ៉ាងសន្ធោសន្ធៅ ។

وَلَوۡ شَآءَ ٱللَّهُ لَجَعَلَهُمۡ أُمَّةٗ وَٰحِدَةٗ وَلَٰكِن يُدۡخِلُ مَن يَشَآءُ فِي رَحۡمَتِهِۦۚ وَٱلظَّٰلِمُونَ مَا لَهُم مِّن وَلِيّٖ وَلَا نَصِيرٍ ٨

៨-ហើយប្រសិនបើអល់ឡោះមានចេតនា ទ្រង់ប្រាកដជាបង្កើតពួកគេជាប្រជាជាតិនៅក្នុងសាសនាតែមួយ ។ ក៏ប៉ុន្តែទ្រង់នឹងបញ្ចូលទៅក្នុងក្តីមេត្តាករុណារបស់ទ្រង់ចំពោះអ្នកណាដែលទ្រង់មានចេតនា ។ ហើយពួកដែលបំពានគ្មានអ្នកគាំពារ និងអ្នកជួយសង្គ្រោះសម្រាប់ពួកគេឡើយ ។

أَمِ ٱتَّخَذُواْ مِن دُونِهِۦٓ أَوۡلِيَآءَۖ فَٱللَّهُ هُوَ ٱلۡوَلِيُّ وَهُوَ يُحۡيِ ٱلۡمَوۡتَىٰ وَهُوَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٩

៩-ឬមួយពួកគេ(ពួកមូស្ហរីគីន)បានយកអ្នកគាំពារផ្សេងពីទ្រង់ឬ? ដូច្នេះ អល់ឡោះទេដែលជាអ្នកគាំពារ និងជាអ្នកដែលធ្វើឱ្យអ្នកស្លាប់រស់ឡើងវិញ(នៅថ្ងៃបរលោក)នោះ ហើយទ្រង់មានអានុភាពលើអ្វីៗទាំងអស់ ។

وَمَا ٱخۡتَلَفۡتُمۡ فِيهِ مِن شَيۡءٖ فَحُكۡمُهُۥٓ إِلَى ٱللَّهِۚ

១០-ហើយអ្វីដែលពួកអ្នក(មនុស្សលោក)បានខ្វែងគំនិតគ្នានូវប្រការណាមួយនៅក្នុងកិច្ចការសាសនា ដំណោះស្រាយរបស់វា

ذَٰلِكُمُ ٱللَّهُ رَبِّي عَلَيۡهِ تَوَكَّلۡتُ وَإِلَيۡهِ
أُنِيبُ ١٠
فَاطِرُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ جَعَلَ لَكُم مِّنۡ
أَنفُسِكُمۡ أَزۡوَٰجٗا وَمِنَ ٱلۡأَنۡعَٰمِ أَزۡوَٰجٗا
يَذۡرَؤُكُمۡ فِيهِۚ لَيۡسَ كَمِثۡلِهِۦ شَيۡءٞۖ وَهُوَ
ٱلسَّمِيعُ ٱلۡبَصِيرُ ١١
لَهُۥ مَقَالِيدُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ يَبۡسُطُ
ٱلرِّزۡقَ لِمَن يَشَآءُ وَيَقۡدِرُۚ إِنَّهُۥ بِكُلِّ شَيۡءٍ
عَلِيمٞ ١٢
۞ شَرَعَ لَكُم مِّنَ ٱلدِّينِ مَا وَصَّىٰ بِهِۦ نُوحٗا
وَٱلَّذِيٓ أَوۡحَيۡنَآ إِلَيۡكَ وَمَا وَصَّيۡنَا بِهِۦٓ إِبۡرَٰهِيمَ
وَمُوسَىٰ وَعِيسَىٰٓۖ أَنۡ أَقِيمُواْ ٱلدِّينَ وَلَا
تَتَفَرَّقُواْ فِيهِۚ كَبُرَ عَلَى ٱلۡمُشۡرِكِينَ مَا
تَدۡعُوهُمۡ إِلَيۡهِۚ ٱللَّهُ يَجۡتَبِيٓ إِلَيۡهِ مَن يَشَآءُ
وَيَهۡدِيٓ إِلَيۡهِ مَن يُنِيبُ ١٣
وَمَا تَفَرَّقُوٓاْ إِلَّا مِنۢ بَعۡدِ مَا جَآءَهُمُ ٱلۡعِلۡمُ
بَغۡيَۢا بَيۡنَهُمۡۚ وَلَوۡلَا كَلِمَةٞ سَبَقَتۡ مِن رَّبِّكَ إِلَىٰٓ
أَجَلٖ مُّسَمّٗى لَّقُضِيَ بَيۡنَهُمۡۚ وَإِنَّ ٱلَّذِينَ

គឺត្រូវវិលត្រឡប់ទៅកាន់អល់ឡោះ[១] ។ នោះហើយគឺអល់ឡោះជាម្ចាស់របស់ខ្ញុំដែលខ្ញុំប្រគល់ការទុកចិត្តចំពោះទ្រង់ ហើយចំពោះទ្រង់តែមួយគត់ដែលខ្ញុំត្រូវវិលត្រឡប់ ។

១១-ទ្រង់គឺជាអ្នកដែលបង្កើតមេឃជាច្រើនជាន់ និងផែនដី ។ ទ្រង់បានបង្កើតពួកអ្នកឱ្យមានគូចេញអំពីពួកអ្នកផ្ទាល់ ហើយសត្វពាហនៈក៏មានគូដែរ ។ តាមរយៈការឱ្យមានគូនេះ ទ្រង់បង្កើតអ្នកទាំងអស់គ្នា ។ គ្មានអ្វីមកប្រដូចនឹងទ្រង់បានឡើយ ។ ហើយទ្រង់មហាឮ មហាឃើញ ។

១២-កូនសោមេឃជាច្រើនជាន់ និងផែនដីគឺជាកម្មសិទ្ធិរបស់ទ្រង់ ។ ទ្រង់បើកទូលាយ និងក្បិតក្បៀតលាភសក្ការៈចំពោះអ្នកណាដែលទ្រង់មានចេតនា ។ ពិតប្រាកដណាស់ ទ្រង់ដឹងបំផុតនូវរាល់អ្វីៗទាំងអស់ ។

១៣-ទ្រង់បានដាក់ចេញនូវច្បាប់សាសនាអ៊ីស្លាមសម្រាប់ពួកអ្នក( មនុស្សលោក) ដូចអ្វីដែលទ្រង់បានដាក់បង្គាប់វាទៅលើនួហ និងអ្វីដែលយើងបានបញ្ចុះឱ្យអ្នក( មូហាំម៉ាត់) ហើយនិងអ្វីដែលយើងបានបង្គាប់ទៅលើអ៊ីព្រហ៊ីម មូសា និងអ៊ីសានឹងវាដែរ ដោយឱ្យពួកអ្នកពង្រឹងសាសនា និងកុំឱ្យពួកអ្នកបែកបាក់គ្នាក្នុងកិច្ចការសាសនាឱ្យសោះ ។ វាធ្ងន់ធ្ងរបំផុតសម្រាប់ពួកមូស្ហរីគីននូវអ្វីដែលអ្នកអំពាវនាវពួកគេទៅកាន់វា( សាសនា) នោះ ។ អល់ឡោះជ្រើសរើសអ្នកណាដែលទ្រង់មានចេតនាឱ្យទៅកាន់សាសនារបស់ទ្រង់ ហើយទ្រង់ចង្អុលបង្ហាញដល់អ្នកណាដែលវិលត្រឡប់ទៅកាន់ទ្រង់ ( ដោយសុំអភ័យទោស និងគោរពតាមបទបញ្ជារបស់ទ្រង់) ។

១៤-ហើយពួកគេ( ពួកមូស្ហរីគីន) បានបែកបាក់គ្នាដោយសារតែការច្រណែនឈ្នានីសរវាងពួកគេក្រោយពេលដែលចំណេះដឹងបានមកដល់ពួកគេហើយនោះ ។ ហើយប្រសិនបើគ្មានការកំណត់ពន្យារ( ដាក់ទារុណកម្ម) ពីម្ចាស់របស់អ្នករហូតដល់ពេលកំណត់ទេ

១-ប្រសិនបើមានការខ្វែងគំនិត ឬបញ្ហាណាមួយដែលមិនស្របគ្នាត្រូវដោះស្រាយបញ្ហានោះ ដោយត្រឡប់ទៅមើលគម្ពីរនិងប្រសាសន៍របស់មូហាំម៉ាត់ ។

នោះ គេពិតជានឹងកាត់សេចក្ដីរវាងពួកគេ(ដាក់ទារុណកម្មក្នុងលោកិយ)ជាមិនខាន។ ហើយពិតប្រាកដណាស់ ពួកដែលត្រូវបានទទួលមរតកនូវគម្ពីរ(តាវរ៉ត និងអ៊ិញជីល)បន្ទាប់ពីពួកគេ(យ៉ាហ៊ូទី ណាសរ៉នី)នោះ គឺស្ថិតនៅក្នុងភាពមន្ទិលសង្ស័យយ៉ាងខ្លាំងអំពីវា(សាសនាអ៊ីស្លាម)។

أُورِثُوا۟ ٱلْكِتَـٰبَ مِنۢ بَعْدِهِمْ لَفِى شَكٍّ مِّنْهُ مُرِيبٍ ﴿١٤﴾

១៥-ដូច្នេះ ចំពោះសាសនាអ៊ីស្លាមនេះ អ្នក(មូហាំម៉ាត់)ត្រូវអំពាវនាវ(មនុស្សលោកឱ្យមានជំនឿ) និងត្រូវកាន់ឱ្យបានខ្ជាប់ខ្ជួនតាមអ្វីដែលគេបានដាក់បញ្ជាមកលើអ្នក ហើយចូរអ្នកកុំធ្វើតាមចំណង់ចិត្តរបស់ពួកគេឱ្យសោះ។ ហើយចូរអ្នកពោលថាៈ ខ្ញុំមានជំនឿនឹងអ្វីដែលអល់ឡោះបានបញ្ចុះអំពីគម្ពីរទាំងនោះ ហើយខ្ញុំត្រូវបានគេបញ្ជាឱ្យប្រកាន់នូវភាពយុត្តិធម៌រវាងពួកអ្នក(ក្នុងការកាត់សេចក្ដី)។ អល់ឡោះគឺជាម្ចាស់របស់ពួកយើង និងជាម្ចាស់របស់ពួកអ្នក។ ទង្វើរបស់យើងគឺសម្រាប់ពួកយើង ហើយទង្វើរបស់ពួកអ្នកគឺសម្រាប់ពួកអ្នក។ គ្មានជម្លោះរវាងពួកយើង និងពួកអ្នកឡើយ។ អល់ឡោះនឹងប្រមូលផ្ដុំរវាងពួកយើងទាំងអស់គ្នា(នៅថ្ងៃបរលោក)។ ហើយទៅចំពោះទ្រង់តែមួយគត់ដែលជាកន្លែងវិលត្រឡប់។

فَلِذَٰلِكَ فَٱدْعُ ۖ وَٱسْتَقِمْ كَمَآ أُمِرْتَ ۖ وَلَا تَتَّبِعْ أَهْوَآءَهُمْ ۖ وَقُلْ ءَامَنتُ بِمَآ أَنزَلَ ٱللَّهُ مِن كِتَـٰبٍ ۖ وَأُمِرْتُ لِأَعْدِلَ بَيْنَكُمُ ۖ ٱللَّهُ رَبُّنَا وَرَبُّكُمْ ۖ لَنَآ أَعْمَـٰلُنَا وَلَكُمْ أَعْمَـٰلُكُمْ ۖ لَا حُجَّةَ بَيْنَنَا وَبَيْنَكُمُ ۖ ٱللَّهُ يَجْمَعُ بَيْنَنَا ۖ وَإِلَيْهِ ٱلْمَصِيرُ ﴿١٥﴾

១៦-ហើយពួកដែលឈ្លោះប្រកែកគ្នាក្នុងសាសនារបស់អល់ឡោះ បន្ទាប់ពីគេ(មនុស្សលោក)បានទទួលយកវាហើយនោះ ការឈ្លោះប្រកែករបស់ពួកគេ គឺគ្មានប្រយោជន៍អ្វីឡើយចំពោះម្ចាស់របស់ពួកគេ។ ហើយពួកគេនឹងទទួលការខឹងសម្បាពីទ្រង់ ហើយពួកគេក៏នឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរដែរ។

وَٱلَّذِينَ يُحَآجُّونَ فِى ٱللَّهِ مِنۢ بَعْدِ مَا ٱسْتُجِيبَ لَهُۥ حُجَّتُهُمْ دَاحِضَةٌ عِندَ رَبِّهِمْ وَعَلَيْهِمْ غَضَبٌ وَلَهُمْ عَذَابٌ شَدِيدٌ ﴿١٦﴾

១៧-អល់ឡោះជាអ្នកដែលបានបញ្ចុះគម្ពីរ(គួរអាន និងគម្ពីរផ្សេងៗទៀត)ដោយមានភាពត្រឹមត្រូវ និងបញ្ចុះជញ្ជីង(យុត្តិធម៌)។ តើអ្វីទៅដែលធ្វើឱ្យអ្នកដឹងថា កាលកំណត់នៃថ្ងៃបរលោកជិតមក ដល់នោះ?

ٱللَّهُ ٱلَّذِىٓ أَنزَلَ ٱلْكِتَـٰبَ بِٱلْحَقِّ وَٱلْمِيزَانَ ۗ وَمَا يُدْرِيكَ لَعَلَّ ٱلسَّاعَةَ قَرِيبٌ ﴿١٧﴾

១៨-ពួកដែលគ្មានជំនឿនឹងថ្ងៃបរលោក សុំឱ្យវាកើតឡើងភ្លាមៗ។ រីឯបណ្ដាអ្នកមានជំនឿវិញ គឺពួកគេមានការភ័យខ្លាច

يَسْتَعْجِلُ بِهَا ٱلَّذِينَ لَا يُؤْمِنُونَ بِهَا ۖ وَٱلَّذِينَ ءَامَنُوا۟ مُشْفِقُونَ مِنْهَا وَيَعْلَمُونَ

أَنَّهَا ٱلْحَقُّ ۗ أَلَآ إِنَّ ٱلَّذِينَ يُمَارُونَ فِى
ٱلسَّاعَةِ لَفِى ضَلَٰلٍۭ بَعِيدٍ ﴿١٨﴾

ចំពោះវា ហើយពួកគេដឹងថា វានឹងកើតឡើងយ៉ាងពិតប្រាកដ ។ ចូរដឹងថាៈ ពិតប្រាកដណាស់ ពួកដែលឈ្លោះប្រកែកគ្នាចំពោះការកើតឡើងនៃថ្ងៃបរលោកនេះ គឺពិតជាស្ថិតនៅក្នុងភាពវង្វេងដ៏សែនឆ្ងាយ ។

ٱللَّهُ لَطِيفٌۢ بِعِبَادِهِۦ يَرْزُقُ مَن يَشَآءُ ۖ وَهُوَ
ٱلْقَوِىُّ ٱلْعَزِيزُ ﴿١٩﴾

១៩-អល់ឡោះទន់ភ្លន់បំផុតចំពោះខ្ញុំទាំងឡាយរបស់ទ្រង់ ។ ទ្រង់ប្រទានលាភសក្ការៈដល់អ្នកណាដែលទ្រង់មានចេតនា ។ ហើយទ្រង់មហាខ្លាំងក្លា មហាខ្លាំងពូកែ ។

مَن كَانَ يُرِيدُ حَرْثَ ٱلْءَاخِرَةِ نَزِدْ لَهُۥ فِى
حَرْثِهِۦ ۖ وَمَن كَانَ يُرِيدُ حَرْثَ ٱلدُّنْيَا
نُؤْتِهِۦ مِنْهَا وَمَا لَهُۥ فِى ٱلْءَاخِرَةِ
مِن نَّصِيبٍ ﴿٢٠﴾

២០-អ្នកណាហើយចង់បានផលបុណ្យនៅថ្ងៃបរលោក យើងនឹងបន្ថែមឱ្យគេនូវផលបុណ្យរបស់គេថែមទៀត ។ រីឯអ្នកណាហើយចង់បានការតបស្នងនៅក្នុងលោកិយនេះ យើងនឹងផ្តល់វាឱ្យគេ តែនៅថ្ងៃបរលោកគេនឹងមិនទទួលបានចំណែក(ផលបុណ្យ)អ្វីឡើយ ។

أَمْ لَهُمْ شُرَكَٰٓؤُا۟ شَرَعُوا۟ لَهُم مِّنَ ٱلدِّينِ
مَا لَمْ يَأْذَنۢ بِهِ ٱللَّهُ ۚ وَلَوْلَا كَلِمَةُ ٱلْفَصْلِ
لَقُضِىَ بَيْنَهُمْ ۗ وَإِنَّ ٱلظَّٰلِمِينَ لَهُمْ عَذَابٌ
أَلِيمٌ ﴿٢١﴾

២១-ឬមួយពួកគេមានព្រះនានា(ផ្សេងពីអល់ឡោះ)ដែលពួកវាបានដាក់ច្បាប់សាសនាសម្រាប់ពួកគេនូវអ្វីដែលអល់ឡោះមិនបានអនុញ្ញាតចំពោះវាឬ? ហើយប្រសិនបើគ្មានការកំណត់(ពន្យារការធ្វើទារុណកម្មនៅថ្ងៃបរលោក)ទេនោះ គេពិតជានឹងកាត់សេចក្តីរវាងពួកគេ(ធ្វើទារុណកម្មនៅក្នុងលោកិយនេះ)ជាមិនខាន ។ ពិតប្រាកដណាស់ ពួកដែលបំពាននឹងទទួលទារុណកម្មដ៏ឈឺចាប់ ។

تَرَى ٱلظَّٰلِمِينَ مُشْفِقِينَ مِمَّا
كَسَبُوا۟ وَهُوَ وَاقِعٌۢ بِهِمْ ۗ وَٱلَّذِينَ ءَامَنُوا۟
وَعَمِلُوا۟ ٱلصَّٰلِحَٰتِ فِى رَوْضَاتِ ٱلْجَنَّاتِ ۖ
لَهُم مَّا يَشَآءُونَ عِندَ رَبِّهِمْ ۚ ذَٰلِكَ هُوَ
ٱلْفَضْلُ ٱلْكَبِيرُ ﴿٢٢﴾

២២-អ្នក(មូហាំម៉ាត់)នឹងឃើញពួកបំពាន(នៅថ្ងៃបរលោក)ភ័យខ្លាចនូវអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមកខណៈ ដែលទារុណកម្មធ្លាក់មកលើពួកគេ ។ រីឯបណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវវិញ ពួកគេស្ថិតនៅក្នុងសួនច្បារជាច្រើននៃឋានសួគ៌ ។ ពួកគេមានអ្វីៗដែលពួកគេប្រាថ្នាចង់បានពីម្ចាស់របស់ពួកគេ ។ នោះគឺជាការប្រោសប្រទានដ៏ធំធេង ។

ذَٰلِكَ ٱلَّذِى يُبَشِّرُ ٱللَّهُ عِبَادَهُ ٱلَّذِينَ ءَامَنُوا۟
وَعَمِلُوا۟ ٱلصَّٰلِحَٰتِ ۗ قُل لَّآ أَسْـَٔلُكُمْ عَلَيْهِ
أَجْرًا إِلَّا ٱلْمَوَدَّةَ فِى ٱلْقُرْبَىٰ ۗ وَمَن يَقْتَرِفْ

២៣-ការប្រោសប្រទាននោះហើយដែលអល់ឡោះផ្តល់ដំណឹងរីករាយទៅចំពោះបណ្តាខ្ញុំរបស់ទ្រង់ដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ខ្ញុំមិនសុំកម្រៃ

حَسَنَةً نَّزِدۡ لَهُۥ فِيهَا حُسۡنًاۚ إِنَّ ٱللَّهَ غَفُورٞ شَكُورٌ ٢٣

ពីពួកអ្នកលើការអំពាវនាវនោះឡើយ លើកលែងតែដើម្បីឱ្យមានការអាណិតស្រឡាញ់គ្នាក្នុងនាមជាញាតិសន្តានប៉ុណ្ណោះ ។ ហើយអ្នកណាដែលសាងនូវអំពើល្អមួយយើងនឹងបន្ថែមផលបុណ្យឱ្យគេជាច្រើនទៀត ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោសដឹងគុណបំផុត ។

أَمۡ يَقُولُونَ ٱفۡتَرَىٰ عَلَى ٱللَّهِ كَذِبٗاۖ فَإِن يَشَإِ ٱللَّهُ يَخۡتِمۡ عَلَىٰ قَلۡبِكَۗ وَيَمۡحُ ٱللَّهُ ٱلۡبَٰطِلَ وَيُحِقُّ ٱلۡحَقَّ بِكَلِمَٰتِهِۦٓۚ إِنَّهُۥ عَلِيمُۢ بِذَاتِ ٱلصُّدُورِ ٢٤

២៤-ឬមួយពួកគេនិយាយថាៈ គេ(មូហាំម៉ាត់) បានប្រឌិតនូវពាក្យភូតកុហកទៅលើអល់ឡោះឬ? ដូច្នេះ ប្រសិនបើអល់ឡោះមានចេតនា ទ្រង់នឹងបោះត្រាភ្ជិតលើចិត្តរបស់អ្នក(ឱ្យភ្លេចគម្ពីរគួរ-អាន) ជាមិនខាន ។ ហើយអល់ឡោះបំបាត់ចោលនូវអំពើមិនត្រឹមត្រូវ ហើយទ្រង់បញ្ជាក់នូវការពិតតាមរយៈពាក្យសំដីរបស់ទ្រង់(គម្ពីរគួរអាន) ។ ពិតប្រាកដណាស់ ទ្រង់មហាដឹងនូវអ្វីដែលមាននៅក្នុងចិត្ត ។

وَهُوَ ٱلَّذِي يَقۡبَلُ ٱلتَّوۡبَةَ عَنۡ عِبَادِهِۦ وَيَعۡفُواْ عَنِ ٱلسَّيِّـَٔاتِ وَيَعۡلَمُ مَا تَفۡعَلُونَ ٢٥

២៥-ហើយទ្រង់ជាអ្នកដែលទទួលនូវការសារភាពទោសកំហុសពីបណ្ដាខ្ញុំរបស់ទ្រង់ និងលើកលែងទោសនូវបាបកម្មទាំងឡាយ ហើយទ្រង់ដឹងពីអ្វីដែលពួកអ្នកប្រព្រឹត្ត ។

وَيَسۡتَجِيبُ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ وَيَزِيدُهُم مِّن فَضۡلِهِۦۚ وَٱلۡكَٰفِرُونَ لَهُمۡ عَذَابٞ شَدِيدٞ ٢٦

២៦-ហើយទ្រង់ឆ្លើយតប(ទទួលយកការបួងសួងសុំ) ចំពោះបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ ព្រមទាំងបន្ថែមឱ្យពួកគេនូវការប្រោសប្រទានរបស់ទ្រង់ទៀត ។ រីឯពួកដែលគ្មានជំនឿវិញ ពួកគេនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរ ។

۞ وَلَوۡ بَسَطَ ٱللَّهُ ٱلرِّزۡقَ لِعِبَادِهِۦ لَبَغَوۡاْ فِي ٱلۡأَرۡضِ وَلَٰكِن يُنَزِّلُ بِقَدَرٖ مَّا يَشَآءُۚ إِنَّهُۥ بِعِبَادِهِۦ خَبِيرُۢ بَصِيرٞ ٢٧

២៧-ហើយប្រសិនបើអល់ឡោះបើកទូលាយនូវលាភសក្ការៈចំពោះខ្ញុំទាំងឡាយរបស់ទ្រង់ ពួកគេពិតជាប្រព្រឹត្តល្មើសនៅលើផែនដីនេះជាមិនខាន ។ ក៏ប៉ុន្តែទ្រង់ប្រទានតាមកំរិតដែលទ្រង់មានចេតនា ។ ពិតប្រាកដណាស់ ទ្រង់មហាដឹង មហាឃើញចំពោះ(ទង្វើ)ខ្ញុំទាំងឡាយរបស់ទ្រង់ ។

وَهُوَ ٱلَّذِي يُنَزِّلُ ٱلۡغَيۡثَ مِنۢ بَعۡدِ مَا قَنَطُواْ وَيَنشُرُ رَحۡمَتَهُۥۚ وَهُوَ ٱلۡوَلِيُّ ٱلۡحَمِيدُ ٢٨

២៨-ហើយទ្រង់ជាអ្នកបញ្ចុះទឹកភ្លៀងបន្ទាប់ពីពួកគេអស់សង្ឃឹម(ថាគ្មានទឹកភ្លៀង) និងស្រោចស្រពនូវក្ដីមេត្តាករុណារបស់ទ្រង់ ហើយទ្រង់ជាអ្នកគាំពារ ជាទីកោតសរសើរបំផុត ។

وَمِنۡ ءَايَٰتِهِۦ خَلۡقُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَمَا

២៩-ហើយក្នុងចំណោមភស្តុតាងទាំងឡាយរបស់ទ្រង់(ដែល

بَثَّ فِيهِمَا مِن دَآبَّةٍۚ وَهُوَ عَلَىٰ جَمۡعِهِمۡ إِذَا يَشَآءُ قَدِيرٞ ٢٩

បញ្ជាក់ពីអានុភាពរបស់ទ្រង់) គឺការបង្កើតមេឃជាច្រើនជាន់ និងផែនដី ព្រមទាំងទ្រង់បានដាក់នូវអ្វីៗដែលមានជីវិតឱ្យរស់នៅពាសពេញវាទាំងពីរ ។ ហើយទ្រង់មានអានុភាពគ្រប់គ្រាន់ក្នុងការប្រមូលផ្តុំពួកគេ( នៅថ្ងៃបរលោក) នៅពេលដែលទ្រង់មានចេតនា ។

وَمَآ أَصَٰبَكُم مِّن مُّصِيبَةٖ فَبِمَا كَسَبَتۡ أَيۡدِيكُمۡ وَيَعۡفُواْ عَن كَثِيرٖ ٣٠

៣០-ហើយអ្វីដែលបានធ្លាក់មកលើពួកអ្នកអំពីប្រការអាក្រក់នោះ គឺដោយសារតែអ្វីដែលពួកអ្នកបានប្រព្រឹត្តកន្លងមក ហើយទ្រង់ក៏លើកលែងទោសយ៉ាងច្រើនឥតគណនាដែរ ។

وَمَآ أَنتُم بِمُعۡجِزِينَ فِي ٱلۡأَرۡضِۖ وَمَا لَكُم مِّن دُونِ ٱللَّهِ مِن وَلِيّٖ وَلَا نَصِيرٖ ٣١

៣១-ហើយពួកអ្នកមិនអាចគេចផុត( ពីទារុណកម្មរបស់អល់ឡោះ) នៅលើផែនដីឡើយ ។ ពួកអ្នកក៏គ្មានអ្នកគាំពារ និងអ្នកជួយសង្គ្រោះណាផ្សេងពីអល់ឡោះដែរ ។

وَمِنۡ ءَايَٰتِهِ ٱلۡجَوَارِ فِي ٱلۡبَحۡرِ كَٱلۡأَعۡلَٰمِ ٣٢

៣២-ហើយក្នុងចំណោមភស្តុតាងទាំងឡាយរបស់ទ្រង់នោះដែរ គឺសំពៅដ៏ធំដែលធ្វើដំណើរនៅលើផ្ទៃសមុទ្រប្រៀបដូចជាភ្នំ ។

إِن يَشَأۡ يُسۡكِنِ ٱلرِّيحَ فَيَظۡلَلۡنَ رَوَاكِدَ عَلَىٰ ظَهۡرِهِۦٓۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ لِّكُلِّ صَبَّارٖ شَكُورٍ ٣٣

៣៣-ប្រសិនបើទ្រង់មានចេតនា ទ្រង់នឹងធ្វើឱ្យខ្យល់ឈប់បក់ ហើយសំពៅនឹងនៅនឹងថ្កល់លើផ្ទៃសមុទ្រ ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងជាច្រើនសម្រាប់រាល់អ្នកដែលអត់ធ្មត់ដឹងគុណបំផុត ។

أَوۡ يُوبِقۡهُنَّ بِمَا كَسَبُواْ وَيَعۡفُ عَن كَثِيرٖ ٣٤

៣៤-ឬទ្រង់អាចបំផ្លាញសំពៅទាំងនេះ ដោយសារតែអ្វីដែលពួកគេបានប្រព្រឹត្ត ។ ហើយទ្រង់លើកលែងទោសយ៉ាងច្រើនឥតគណនា ។

وَيَعۡلَمَ ٱلَّذِينَ يُجَٰدِلُونَ فِيٓ ءَايَٰتِنَا مَا لَهُم مِّن مَّحِيصٖ ٣٥

៣៥-ហើយដើម្បីឱ្យពួកដែលជជែកដេញដោលក្នុងអាយ៉ាត់ៗរបស់យើងដឹងថា ពួកគេគ្មានកន្លែងគេចចេញ( ពីទារុណកម្ម) បានឡើយ ។

فَمَآ أُوتِيتُم مِّن شَيۡءٖ فَمَتَٰعُ ٱلۡحَيَوٰةِ ٱلدُّنۡيَاۖ وَمَا عِندَ ٱللَّهِ خَيۡرٞ وَأَبۡقَىٰ لِلَّذِينَ ءَامَنُواْ وَعَلَىٰ رَبِّهِمۡ يَتَوَكَّلُونَ ٣٦

៣៦-ហើយអ្វីៗដែលគេបានប្រទានឱ្យពួកអ្នក គឺគ្រាន់តែជាភាពសប្បាយរីករាយនៃជីវិតលោកិយប៉ុណ្ណោះ ។ តែអ្វីដែលមាននៅជាមួយអល់ឡោះ គឺល្អប្រសើរនិងនៅស្ថិតស្ថេរជាអមតៈសម្រាប់បណ្តាអ្នកដែលមានជំនឿ ។ ហើយទៅចំពោះម្ចាស់របស់ពួកគេតែមួយគត់ដែលពួកគេប្រគល់ការទុកចិត្ត ។

وَٱلَّذِينَ يَجۡتَنِبُونَ كَبَٰٓئِرَ ٱلۡإِثۡمِ وَٱلۡفَوَٰحِشَ وَإِذَا
مَا غَضِبُواْ هُمۡ يَغۡفِرُونَ ﴿٣٧﴾

៣៧-និងបណ្តាអ្នកដែលចៀសពីអំពើបាបធំៗ និងទង្វើអាក្រក់ផ្សេងៗ ហើយពេលដែលពួកគេខឹងសម្បាចំពោះជនណាម្នាក់ ពួកគេតែងតែអភ័យទោសដល់ជននោះ ។

وَٱلَّذِينَ ٱسۡتَجَابُواْ لِرَبِّهِمۡ وَأَقَامُواْ ٱلصَّلَوٰةَ
وَأَمۡرُهُمۡ شُورَىٰ بَيۡنَهُمۡ وَمِمَّا رَزَقۡنَٰهُمۡ
يُنفِقُونَ ﴿٣٨﴾

៣៨-និងបណ្តាអ្នកដែលបានទទួលយកការអំពាវនាវចំពោះម្ចាស់របស់ពួកគេ និងបានប្រតិបត្តិសឡាត ។ ហើយពួកគេមានការពិភាក្សាគ្នាចំពោះកិច្ចការរបស់ពួកគេ ព្រមទាំងពួកគេបរិច្ចាគអំពីអ្វីដែលយើងបានប្រទានឱ្យពួកគេ ។

وَٱلَّذِينَ إِذَآ أَصَابَهُمُ ٱلۡبَغۡيُ هُمۡ يَنتَصِرُونَ ﴿٣٩﴾

៣៩-និងបណ្តាអ្នកដែលតបតវិញ នៅពេលដែលពួកគេទទួលរងនូវការបំពាន ។

وَجَزَٰٓؤُاْ سَيِّئَةٖ سَيِّئَةٞ مِّثۡلُهَاۖ فَمَنۡ عَفَا وَأَصۡلَحَ
فَأَجۡرُهُۥ عَلَى ٱللَّهِۚ إِنَّهُۥ لَا يُحِبُّ ٱلظَّٰلِمِينَ ﴿٤٠﴾

៤០-ហើយការតបស្នងចំពោះប្រការអាក្រក់មួយគឺទទួលបានបាបកម្មមួយដែរ ។ តែអ្នកណាដែលចេះអធ្យាស្រ័យ និងផ្សះផ្សាគ្នា គឺអល់ឡោះនឹងប្រទានផលបុណ្យដល់គេ ។ ពិតប្រាកដណាស់ ទ្រង់មិនស្រឡាញ់ពួកដែលបំពានឡើយ ។

وَلَمَنِ ٱنتَصَرَ بَعۡدَ ظُلۡمِهِۦ فَأُوْلَٰٓئِكَ مَا عَلَيۡهِم
مِّن سَبِيلٍ ﴿٤١﴾

៤១-ហើយជាការពិតណាស់ អ្នកដែលបានតបតវិញបន្ទាប់ពីទទួលរងនូវការបំពាន ពួកគេទាំងនោះគ្មានទោសពៃរ៍អ្វីឡើយ ។

إِنَّمَا ٱلسَّبِيلُ عَلَى ٱلَّذِينَ يَظۡلِمُونَ ٱلنَّاسَ
وَيَبۡغُونَ فِي ٱلۡأَرۡضِ بِغَيۡرِ ٱلۡحَقِّۚ أُوْلَٰٓئِكَ
لَهُمۡ عَذَابٌ أَلِيمٞ ﴿٤٢﴾

៤២-ការពិតទោសពៃរ៍នោះសម្រាប់តែពួកដែលបំពានទៅលើមនុស្សលោក និងប្រព្រឹត្តបទល្មើសនៅលើផែនដីនេះដោយគ្មានហេតុផលត្រឹមត្រូវប៉ុណ្ណោះ ។ ពួកទាំងនោះនឹងទទួលទារុណកម្មដ៏ឈឺចាប់ ។

وَلَمَن صَبَرَ وَغَفَرَ إِنَّ ذَٰلِكَ لَمِنۡ عَزۡمِ
ٱلۡأُمُورِ ﴿٤٣﴾

៤៣-ហើយជាការពិតណាស់ អ្នកណាហើយបានអត់ធ្មត់ និងអធ្យាស្រ័យនោះ ពិតប្រាកដណាស់នោះគឺជាប្រការមួយក្នុងចំណោមប្រការដែលអល់ឡោះបង្គាប់ប្រើ ។

وَمَن يُضۡلِلِ ٱللَّهُ فَمَا لَهُۥ مِن وَلِيّٖ مِّنۢ بَعۡدِهِۦۗ
وَتَرَى ٱلظَّٰلِمِينَ لَمَّا رَأَوُاْ ٱلۡعَذَابَ
يَقُولُونَ هَلۡ إِلَىٰ مَرَدّٖ مِّن سَبِيلٖ ﴿٤٤﴾

៤៤-ហើយអ្នកណាដែលអល់ឡោះធ្វើឱ្យវង្វេងនោះ គឺគ្មានអ្នកគាំពារណាសម្រាប់គេក្រៅពីទ្រង់ឡើយ ។ ហើយអ្នក( មូហាំម៉ាត់) នឹងឃើញពួកដែលបំពាននៅពេលដែលពួកគេបានឃើញទារុណកម្ម ( នៅថ្ងៃបរលោក) និយាយថាៈ តើមានផ្លូវណាអាចត្រឡប់ទៅ ( លោកិយ) វិញបានទេ?

وَتَرَىٰهُمۡ يُعۡرَضُونَ عَلَيۡهَا خَٰشِعِينَ مِنَ
ٱلذُّلِّ يَنظُرُونَ مِن طَرۡفٍ خَفِيٍّۗ وَقَالَ
ٱلَّذِينَ ءَامَنُوٓاْ إِنَّ ٱلۡخَٰسِرِينَ ٱلَّذِينَ خَسِرُوٓاْ
أَنفُسَهُمۡ وَأَهۡلِيهِمۡ يَوۡمَ ٱلۡقِيَٰمَةِۗ أَلَآ إِنَّ
ٱلظَّٰلِمِينَ فِي عَذَابٖ مُّقِيمٖ ﴿٤٥﴾

៤៥-ហើយអ្នកនឹងឃើញពួកគេត្រូវគេនាំទៅកាន់នរក ដោយឱនលំទោនទាំងអាម៉ាស់ ព្រមទាំងពួកគេលួចមើលទៅនរកនោះ (ដោយភ័យខ្លាច) ។ រីឯបណ្ដាអ្នកដែលមានជំនឿវិញបាននិយាយថាៈ ពិតប្រាកដណាស់ ពួកដែលខាតបង់គឺជាពួកដែលខាតបង់ខ្លួនឯង និងគ្រួសាររបស់ពួកគេនៅថ្ងៃបរលោក ។ ចូរដឹងថាៈ ពិតប្រាកដណាស់ ពួកដែលបំពានគឺស្ថិតនៅក្នុងទារុណកម្មជារៀងរហូត ។

وَمَا كَانَ لَهُم مِّنۡ أَوۡلِيَآءَ يَنصُرُونَهُم
مِّن دُونِ ٱللَّهِۗ وَمَن يُضۡلِلِ ٱللَّهُ فَمَا لَهُۥ مِن
سَبِيلٍ ﴿٤٦﴾

៤៦-ហើយពួកគេគ្មានអ្នកគាំពារណាជួយពួកគេក្រៅពីអល់ឡោះឡើយ ។ ហើយអ្នកណាដែលអល់ឡោះធ្វើឱ្យវង្វេងនោះ គឺគ្មានមាគ៌ា(ការចង្អុលបង្ហាញ)ណាមួយសម្រាប់គេឡើយ ។

ٱسۡتَجِيبُواْ لِرَبِّكُم مِّن قَبۡلِ أَن يَأۡتِيَ يَوۡمٞ لَّا
مَرَدَّ لَهُۥ مِنَ ٱللَّهِۚ مَا لَكُم مِّن مَّلۡجَإٖ يَوۡمَئِذٖ
وَمَا لَكُم مِّن نَّكِيرٖ ﴿٤٧﴾

៤៧-ចូរពួកអ្នក(ពួកគ្មានជំនឿ)ទទួលយកចុះនូវការអំពាវនាវពីម្ចាស់របស់ពួកអ្នកមុននឹងថ្ងៃដែលគ្មានអ្នកណាអាចរារាំងវាពីអល់ឡោះមកដល់ ។ នៅថ្ងៃនោះពួកអ្នកគ្មានកន្លែងគេចពីទារុណកម្មឡើយ ហើយក៏គ្មានការបដិសេធ(អំពីទោសកំហុស)នោះដែរ ។

فَإِنۡ أَعۡرَضُواْ فَمَآ أَرۡسَلۡنَٰكَ عَلَيۡهِمۡ حَفِيظًاۖ
إِنۡ عَلَيۡكَ إِلَّا ٱلۡبَلَٰغُۗ وَإِنَّآ إِذَآ أَذَقۡنَا ٱلۡإِنسَٰنَ
مِنَّا رَحۡمَةٗ فَرِحَ بِهَاۖ وَإِن تُصِبۡهُمۡ سَيِّئَةُۢ بِمَا
قَدَّمَتۡ أَيۡدِيهِمۡ فَإِنَّ ٱلۡإِنسَٰنَ كَفُورٞ ﴿٤٨﴾

៤៨-តែប្រសិនបើពួកគេងាកចេញ(ពីជំនឿ)វិញ យើងមិនបានបញ្ជូនអ្នក(មូហាំម៉ាត់)ដើម្បីការពារពួកគេឡើយ ។ តួនាទីរបស់អ្នកគ្រាន់តែជាអ្នកផ្សព្វផ្សាយសារប៉ុណ្ណោះ ។ ហើយពិតប្រាកដណាស់ នៅពេលដែលយើងបានឱ្យមនុស្សលោកភ្លក្សនូវក្ដីមេត្តាករុណាពីយើង គេសប្បាយរីករាយនឹងវា ។ តែប្រសិនបើអំពើអាក្រក់បានធ្លាក់លើពួកគេដោយសារតែអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមក (ពួកគេបែរជារមិលគុណទៅវិញ) ។ ដូច្នេះ ពិតប្រាកដណាស់មនុស្សលោកគឺរមិលគុណបំផុត ។

لِّلَّهِ مُلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ يَخۡلُقُ مَا
يَشَآءُۚ يَهَبُ لِمَن يَشَآءُ إِنَٰثٗا وَيَهَبُ لِمَن يَشَآءُ
ٱلذُّكُورَ ﴿٤٩﴾

៤៩-អំណាចនៅលើមេឃជាច្រើនជាន់ និងផែនដីជាកម្មសិទ្ធិរបស់អល់ឡោះ ។ ទ្រង់បង្កើតអ្វីតាមតែទ្រង់មានចេតនា ។ ទ្រង់ប្រទានឱ្យមានតែកូនស្រីចំពោះអ្នកណាម្នាក់ដែលទ្រង់មានចេតនា ហើយទ្រង់ក៏ប្រទានឱ្យមានតែកូនប្រុសចំពោះអ្នកណាម្នាក់ដែលទ្រង់មានចេតនាដែរ ។

أَوْ يُزَوِّجُهُمْ ذُكْرَانًا وَإِنَاثًا ۖ وَيَجْعَلُ مَن يَشَاءُ عَقِيمًا ۚ إِنَّهُۥ عَلِيمٌ قَدِيرٌ ﴿٥٠﴾

៥០-ឬទ្រង់ប្រទានឱ្យពួកគេមានទាំងកូនប្រុសទាំងកូនស្រី ហើយទ្រង់ក៏ធ្វើឱ្យអ្នកណាម្នាក់គ្មានកូនតាមតែទ្រង់មានចេតនាដែរ។ ពិតប្រាកដណាស់ ទ្រង់មហាដឹង មហាមានអានុភាព។

۞ وَمَا كَانَ لِبَشَرٍ أَن يُكَلِّمَهُ ٱللَّهُ إِلَّا وَحْيًا أَوْ مِن وَرَآيِ حِجَابٍ أَوْ يُرْسِلَ رَسُولًا فَيُوحِىَ بِإِذْنِهِۦ مَا يَشَاءُ ۚ إِنَّهُۥ عَلِىٌّ حَكِيمٌ ﴿٥١﴾

៥១-ហើយគ្មានមនុស្សណាម្នាក់ដែលអល់ឡោះមានបន្ទូលទៅកាន់គេដោយផ្ទាល់ឡើយ លើកលែងតែតាមរយៈវ៉ាហ៊ីឬមានបន្ទូលពីខាងក្រោយរបាំង ឬក៏ទ្រង់បញ្ជូនអ្នកនាំសារ(ម៉ាឡាអ៊ីកាត់)ដើម្បីមកប្រាប់តាមការអនុញ្ញាតរបស់ទ្រង់នូវអ្វីដែលទ្រង់មានចេតនាប៉ុណ្ណោះ។ ពិតប្រាកដណាស់ ទ្រង់មហាខ្ពង់ខ្ពស់ មហាគតិបណ្ឌិត។

وَكَذَٰلِكَ أَوْحَيْنَآ إِلَيْكَ رُوحًا مِّنْ أَمْرِنَا ۚ مَا كُنتَ تَدْرِى مَا ٱلْكِتَٰبُ وَلَا ٱلْإِيمَٰنُ وَلَٰكِن جَعَلْنَٰهُ نُورًا نَّهْدِى بِهِۦ مَن نَّشَآءُ مِنْ عِبَادِنَا ۚ وَإِنَّكَ لَتَهْدِىٓ إِلَىٰ صِرَٰطٍ مُّسْتَقِيمٍ ﴿٥٢﴾

៥២-ហើយដូច្នោះដែរ យើងបានបញ្ចុះគម្ពីរគួរអានឱ្យអ្នកតាមបទបញ្ជារបស់យើង ដោយអ្នកមិនធ្លាប់បានដឹងថាអ្វីជាគម្ពីរឡើយ ហើយអ្នកក៏មិនដឹងថាអ្វីជាជំនឿនោះដែរ។ ក៏ប៉ុន្ដែយើងបានបង្កើតវា(គម្ពីរគួរអាន)ជាពន្លឺមួយដែលយើងនឹងចង្អុលបង្ហាញតាមរយៈវាចំពោះអ្នកណាដែលយើងមានចេតនាក្នុងចំណោមខ្ញុំរបស់យើង។ ហើយពិតប្រាកដណាស់ អ្នកនឹងចង្អុលបង្ហាញ(មនុស្សលោក)ទៅកាន់មាគ៌ាដ៏ត្រឹមត្រូវ។

صِرَٰطِ ٱللَّهِ ٱلَّذِى لَهُۥ مَا فِى ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ ۗ أَلَآ إِلَى ٱللَّهِ تَصِيرُ ٱلْأُمُورُ ﴿٥٣﴾

៥៣-គឺជាមាគ៌ារបស់អល់ឡោះ ដែលអ្វីៗនៅលើមេឃជាច្រើនជាន់ និងអ្វីៗនៅលើផែនដីជាកម្មសិទ្ធិរបស់ទ្រង់។ ចូរដឹងថា កិច្ចការទាំងអស់នឹងវិលត្រឡប់ទៅកាន់អល់ឡោះវិញ។

## سورة الزخرف

## ជំពូកអាហ្សហ្ស៊ូខរ៉ុហ្វ

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

حمٓ ﴿١﴾

១-ហា មីម

وَٱلْكِتَٰبِ ٱلْمُبِينِ ﴿٢﴾

២-អល់ឡោះស្បថនឹងគម្ពីរ(គួរអាន)ដ៏ច្បាស់លាស់។

إِنَّا جَعَلْنَٰهُ قُرْءَٰنًا عَرَبِيًّا لَّعَلَّكُمْ تَعْقِلُونَ ﴿٣﴾

៣-ពិតប្រាកដណាស់ យើងបានបញ្ចុះគម្ពីរគួរអានជាភាសាអារ៉ាប់ ដើម្បីឱ្យពួកអ្នកស្វែងយល់។

وَإِنَّهُۥ فِىٓ أُمِّ ٱلْكِتَٰبِ لَدَيْنَا لَعَلِىٌّ حَكِيمٌ ﴿٤﴾

៤-ហើយពិតប្រាកដណាស់ វា(គម្ពីរគួរអាន)មាននៅក្នុងគម្ពីរដើម(ឡាវហុលម៉ះហ្វ៊ូស)ដែលនៅជាមួយយើង គឺពិតជាខ្ពង់ខ្ពស់

ពោរពេញទៅដោយគតិបណ្ឌិត ។

៥-ដូច្នេះ តើឱ្យយើងឈប់បញ្ចុះគម្ពីរគួរអាននេះឱ្យពួកអ្នក ដោយសារតែពួកអ្នកជាក្រុមដែលបំពានឬ ?

أَفَنَضۡرِبُ عَنكُمُ ٱلذِّكۡرَ صَفۡحًا أَن كُنتُمۡ قَوۡمٗا مُّسۡرِفِينَ ۝٥

៦-ហើយណាពីជាច្រើនដែលយើងបានបញ្ជូនទៅកាន់ប្រជា-ជាតិមុនៗ ។

وَكَمۡ أَرۡسَلۡنَا مِن نَّبِيّٖ فِي ٱلۡأَوَّلِينَ ۝٦

៧-ហើយគ្មានណាពីណាម្នាក់មកដល់ពួកគេ ក្រៅពីពួកគេធ្លាប់បានចំអកឡកឡឺយចំពោះគេនោះឡើយ ។

وَمَا يَأۡتِيهِم مِّن نَّبِيٍّ إِلَّا كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ۝٧

៨-ដូច្នេះ យើងបានបំផ្លាញពួកដែលមានកម្លាំងខ្លាំងក្លាជាងពួកគេ( ពួកមូស្ហរិគីន) ទៅទៀត ហើយគំរូ( ទណ្ឌកម្ម) របស់ពួកជំនាន់មុនក៏បានកើតឡើងរួចទៅហើយ ។

فَأَهۡلَكۡنَآ أَشَدَّ مِنۡهُم بَطۡشٗا وَمَضَىٰ مَثَلُ ٱلۡأَوَّلِينَ ۝٨

៩-ហើយជាការពិតណាស់ ប្រសិនបើអ្នកបានសួរពួកគេថា: តើអ្នកណាដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដីនោះ? ពួកគេប្រាកដជានឹងឆ្លើយថា: អ្នកដែលបានបង្កើតពួកវានោះ គឺម្ចាស់ដ៏មហាខ្លាំងពូកែ មហាដឹង ។

وَلَئِن سَأَلۡتَهُم مَّنۡ خَلَقَ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ لَيَقُولُنَّ خَلَقَهُنَّ ٱلۡعَزِيزُ ٱلۡعَلِيمُ ۝٩

១០-គឺជាអ្នកដែលបង្កើតផែនដីដែលមានសណ្ឋានរាបស្មើសម្រាប់ពួកអ្នក ហើយបានបង្កើតឱ្យមានផ្លូវជាច្រើននៅលើវាសម្រាប់ពួកអ្នក( ដើម្បីស្វែងរកលាភសក្ការៈ) ដើម្បីឱ្យពួកអ្នកទទួលបានការចង្អុលបង្ហាញ ។

ٱلَّذِي جَعَلَ لَكُمُ ٱلۡأَرۡضَ مَهۡدٗا وَجَعَلَ لَكُمۡ فِيهَا سُبُلٗا لَّعَلَّكُمۡ تَهۡتَدُونَ ۝١٠

១១-និងជាអ្នកដែលបានបញ្ចុះទឹកភ្លៀងពីលើមេឃតាមចំនួនកំណត់ ។ ហើយយើងបានធ្វើឱ្យទឹកដីដែលស្លាប់( គ្មានជីជាតិ) រស់ឡើងវិញដោយសារវា ។ ពួកអ្នកត្រូវគេបញ្ចេញ( ពីផ្នូរ) មកវិញក៏ដូច្នោះដែរ ។

وَٱلَّذِي نَزَّلَ مِنَ ٱلسَّمَآءِ مَآءَۢ بِقَدَرٖ فَأَنشَرۡنَا بِهِۦ بَلۡدَةٗ مَّيۡتٗاۚ كَذَٰلِكَ تُخۡرَجُونَ ۝١١

១២-និងជាអ្នកដែលបានបង្កើតអ្វីទាំងអស់សុទ្ធតែមានគូរបស់វា ហើយទ្រង់បានបង្កើតសម្រាប់ពួកអ្នកនូវនាវា និងសត្វពាហនៈដែលពួកអ្នកអាចជិះបាន ។

وَٱلَّذِي خَلَقَ ٱلۡأَزۡوَٰجَ كُلَّهَا وَجَعَلَ لَكُم مِّنَ ٱلۡفُلۡكِ وَٱلۡأَنۡعَٰمِ مَا تَرۡكَبُونَ ۝١٢

១៣-ដើម្បីឱ្យពួកអ្នកជិះលើវា( នាវានិងសត្វពាហនៈ) ។ បន្ទាប់

لِتَسۡتَوُۥاْ عَلَىٰ ظُهُورِهِۦ ثُمَّ تَذۡكُرُواْ نِعۡمَةَ

رَبِّكُمْ إِذَا ٱسْتَوَيْتُمْ عَلَيْهِ وَتَقُولُوا۟ سُبْحَـٰنَ ٱلَّذِى سَخَّرَ لَنَا هَـٰذَا وَمَا كُنَّا لَهُۥ مُقْرِنِينَ ﴿١٣﴾

មកពួកអ្នកត្រូវរំលឹកចំពោះនៀកម៉ាត់នៃម្ចាស់របស់ពួកអ្នក នៅពេលណាដែលពួកអ្នកជិះលើវា ហើយពួកអ្នកត្រូវបួងសួងសុំថាៈ (سُبْحَانَ الَّذِي سَخَّرَ لَنَا هَذَا وَمَا كُنَّا لَهُ مُقْرِنِيْنَ، وَإِنَّا إِلَى رَبِّنَا لَمُنْقَلِبُوْنَ) ទ្រង់មហាជ្រះស្អាតដែលបានបង្កើតអ្វីៗទាំងនេះជាប្រយោជន៍ដល់ពួកយើង ហើយពួកយើងគ្មានសមត្ថភាពបង្កើតអ្វីៗទាំងនេះឡើយ ។

وَإِنَّآ إِلَىٰ رَبِّنَا لَمُنقَلِبُونَ ﴿١٤﴾

១៤-ហើយពិតប្រាកដណាស់ ពួកយើងនឹងត្រូវវិលត្រឡប់ទៅកាន់ម្ចាស់របស់ពួកយើងវិញ ។

وَجَعَلُوا۟ لَهُۥ مِنْ عِبَادِهِۦ جُزْءًا ۚ إِنَّ ٱلْإِنسَـٰنَ لَكَفُورٌ مُّبِينٌ ﴿١٥﴾

១៥-ហើយពួកគេ(ពួកមូស្ហរីគីន) បានចាត់ទុកខ្ញុំរបស់ទ្រង់ មួយចំនួនជាផ្នែកមួយនៃទ្រង់[1] ។ ពិតប្រាកដណាស់ មនុស្សលោកគឺរមិលគុណយ៉ាងច្បាស់លាស់ ។

أَمِ ٱتَّخَذَ مِمَّا يَخْلُقُ بَنَاتٍ وَأَصْفَىٰكُم بِٱلْبَنِينَ ﴿١٦﴾

១៦-ឬមួយ(ពួកអ្នកអះអាងថា) ទ្រង់បានជ្រើសរើសកូនស្រីពីអ្វីដែលទ្រង់បានបង្កើត ហើយបានជ្រើសរើសកូនប្រុសសម្រាប់ពួកអ្នកវិញឬ?

وَإِذَا بُشِّرَ أَحَدُهُم بِمَا ضَرَبَ لِلرَّحْمَـٰنِ مَثَلًا ظَلَّ وَجْهُهُۥ مُسْوَدًّا وَهُوَ كَظِيمٌ ﴿١٧﴾

១៧-ហើយនៅពេលដែលគេប្រាប់ដំណឹងដល់អ្នកណាម្នាក់ក្នុងចំណោមពួកគេនូវអ្វី(កូនស្រី) ដែលគេបានប្រដូចនឹងម្ចាស់មហាសប្បុរសនោះ មុខរបស់គេប្រែជាខ្មៅ ហើយគេពោរពេញទៅដោយភាពទុក្ខសោក ។

أَوَمَن يُنَشَّؤُا۟ فِى ٱلْحِلْيَةِ وَهُوَ فِى ٱلْخِصَامِ غَيْرُ مُبِينٍ ﴿١٨﴾

១៨-តើ(សមជាកូនអល់ឡោះដែរឬទេ) អ្នកដែលត្រូវគេចិញ្ចឹមដោយការតុបតែង(សំលៀកបំពាក់ និងគ្រឿងអលង្កា) ហើយគេមិនអាចលើកហេតុផលមកបញ្ជាក់ឱ្យច្បាស់នៅពេលមានជម្លោះនោះ?

وَجَعَلُوا۟ ٱلْمَلَـٰٓئِكَةَ ٱلَّذِينَ هُمْ عِبَـٰدُ ٱلرَّحْمَـٰنِ إِنَـٰثًا ۚ أَشَهِدُوا۟ خَلْقَهُمْ ۚ سَتُكْتَبُ شَهَـٰدَتُهُمْ وَيُسْـَٔلُونَ ﴿١٩﴾

១៩-ហើយពួកគេបានចាត់ទុកម៉ាឡាអ៊ីកាត់ដែលពួកគេជាខ្ញុំរបស់ម្ចាស់មហាសប្បុរសនោះជាស្ត្រី ។ តើពួកគេបានឃើញផ្ទាល់ភ្នែកពីការបង្កើតម៉ាឡាអ៊ីកាត់ឬ? ការអះអាងរបស់ពួកគេនឹងត្រូវគេកត់ត្រាទុក ហើយពួកគេនឹងត្រូវគេសួរ(នៅថ្ងៃបរលោក) ។

وَقَالُوا۟ لَوْ شَآءَ ٱلرَّحْمَـٰنُ مَا عَبَدْنَـٰهُم ۗ مَّا لَهُم

២០-ហើយពួកគេបាននិយាយថាៈ ប្រសិនបើម្ចាស់មហា

---

១-ពួកមូស្ហរីគីនបានចាត់ទុកអល់ឡោះជាអ្នកដែលមានកូន ដូចជាពួកគេនិយាយថាៈ បណ្តាម៉ាឡាអ៊ីកាត់ គឺជាកូនរបស់អល់ឡោះ ។

بِذَٰلِكَ مِنۡ عِلۡمٍۖ إِنۡ هُمۡ إِلَّا
يَخۡرُصُونَ ٢٠

សប្បុរសមានចេតនា ពួកយើងមិនគោរពសក្ការៈពួកគេ( ម៉ាឡា-អ៊ីកាត់) ឡើយ ។ ពួកគេមិនបានដឹងអំពីរឿងនោះឡើយ ។ ពួកគេគ្មានអ្វីក្រៅពីនិយាយភូតកុហកឡើយ ។

أَمۡ ءَاتَيۡنَٰهُمۡ كِتَٰبٗا مِّن قَبۡلِهِۦ فَهُم بِهِۦ
مُسۡتَمۡسِكُونَ ٢١

២១-ឬមួយយើងបានផ្តល់គម្ពីរណាមួយឱ្យពួកគេមុនគម្ពីរគួរអានដោយពួកគេជាអ្នកប្រតិបត្តិតាមវានោះ?

بَلۡ قَالُوٓاْ إِنَّا وَجَدۡنَآ ءَابَآءَنَا عَلَىٰٓ أُمَّةٖ وَإِنَّا
عَلَىٰٓ ءَاثَٰرِهِم مُّهۡتَدُونَ ٢٢

២២-ផ្ទុយទៅវិញ ពួកគេបែរជានិយាយថា: ពិតប្រាកដណាស់ ពួកយើងបានឃើញជីដូនជីតារបស់ពួកយើងស្ថិតនៅលើសាសនាតែមួយ ។ ហើយពិតប្រាកដណាស់ ពួកយើងជាអ្នកទទួលបានការចង្អុលបង្ហាញតាមកេរដំណែលរបស់ពួកគេ ។

وَكَذَٰلِكَ مَآ أَرۡسَلۡنَا مِن قَبۡلِكَ فِي قَرۡيَةٖ مِّن
نَّذِيرٍ إِلَّا قَالَ مُتۡرَفُوهَآ إِنَّا وَجَدۡنَآ ءَابَآءَنَا
عَلَىٰٓ أُمَّةٖ وَإِنَّا عَلَىٰٓ ءَاثَٰرِهِم مُّقۡتَدُونَ ٢٣

២៣-ដូច្នោះដែរ រាល់ៗអ្នកដាស់តឿនព្រមានដែលយើងបានបញ្ជូនទៅកាន់អ្នកភូមិស្រុកណាមួយមុនអ្នក( មូហាំម៉ាត់) គឺពួកដែលមានទ្រព្យសម្បត្តិស្តុកស្តម្ភនៃភូមិស្រុកនោះតែងតែនិយាយថា: ពិតប្រាកដណាស់ ពួកយើងបានឃើញជីដូនជីតារបស់ពួកយើងស្ថិតនៅលើសាសនាមួយ ។ ហើយពិតប្រាកដណាស់ ពួកយើងជាអ្នកដើរតាមកេរដំណែលរបស់ពួកគេ ។

۞ قَٰلَ أَوَلَوۡ جِئۡتُكُم بِأَهۡدَىٰ مِمَّا وَجَدتُّمۡ
عَلَيۡهِ ءَابَآءَكُمۡۖ قَالُوٓاْ إِنَّا بِمَآ أُرۡسِلۡتُم بِهِۦ
كَٰفِرُونَ ٢٤

២៤-គេ( អ្នកដាស់តឿនព្រមាន) បានពោលថា: តើទោះបីជាខ្ញុំបាននាំមកឱ្យពួកអ្នកប្រសើរជាងអ្វីៗដែលពួកអ្នកទទួលបានវាពីជីដូនជីតារបស់ពួកអ្នកក៏ដោយឬ? ពួកគេបាននិយាយថា: ពិតប្រាកដណាស់ ពួកយើងជាអ្នកបដិសេធនឹងអ្វីដែលគេបានបញ្ជូនពួកអ្នកមកជាមួយនឹងវា ។

فَٱنتَقَمۡنَا مِنۡهُمۡۖ فَٱنظُرۡ كَيۡفَ كَانَ عَٰقِبَةُ
ٱلۡمُكَذِّبِينَ ٢٥

២៥-ហើយយើងក៏ដាក់ទណ្ឌកម្មពួកគេ ។ ដូច្នេះ ចូរអ្នកមើលចុះ តើលទ្ធផលចុងក្រោយរបស់ពួកដែលបដិសេធនោះយ៉ាងដូចម្តេច?

وَإِذۡ قَالَ إِبۡرَٰهِيمُ لِأَبِيهِ وَقَوۡمِهِۦٓ إِنَّنِي بَرَآءٞ مِّمَّا
تَعۡبُدُونَ ٢٦

២៦-ហើយ( ចូរចងចាំ) នៅពេលដែលអ៊ីព្រហ៊ីមបាននិយាយទៅកាន់ឪពុក និងក្រុមរបស់គាត់ថា: ពិតប្រាកដណាស់ ខ្ញុំមិនពាក់ព័ន្ធនឹងអ្វីដែលពួកអ្នកកំពុងគោរពសក្ការៈនោះឡើយ ។

إِلَّا ٱلَّذِي فَطَرَنِي فَإِنَّهُۥ سَيَهۡدِينِ ٢٧

២៧-ក៏ប៉ុន្តែ( ខ្ញុំគោរពសក្ការៈចំពោះ) អ្នកដែលបានបង្កើតខ្ញុំប៉ុណ្ណោះ ព្រោះទ្រង់ពិតជានឹងចង្អុលបង្ហាញដល់ខ្ញុំ ។

២៨-ហើយគាត់(អ៊ីព្រហ៊ីម) បានចាត់ទុកវា( لَا إِلَٰهَ إِلَّا ٱللَّهُ : គ្មានទេម្ចាស់ដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីអល់ឡោះ) ជាពាក្យសំដីដែលមិនសាបសូន្យសម្រាប់អ្នកជំនាន់ក្រោយរបស់គាត់។ សង្ឃឹមថាពួកគេនឹងវិលត្រឡប់(ទៅគោរពអល់ឡោះ)វិញ។

២៩-ផ្ទុយទៅវិញ យើងបានឱ្យពួកទាំងនោះ និងជីដូនជីតារបស់ពួកគេសោយសុខរហូតទាល់តែការពិត(គម្ពីរគួរអាន) បានមកដល់ពួកគេ និងអ្នកនាំសារដែលបញ្ជាក់យ៉ាងច្បាស់លាស់។

៣០-តែនៅពេលដែលការពិតបានមកដល់ពួកគេ ពួកគេបែរជានិយាយថា: នេះគឺជាមន្តអាគម ហើយពិតប្រាកដណាស់យើងគឺជាអ្នកដែលបដិសេធនឹងវា។

៣១-ហើយពួកគេបាននិយាយថា: ហេតុអ្វីបានជាគម្ពីរគួរអាននេះមិនត្រូវគេបញ្ចុះទៅឱ្យបុរសម្នាក់ដែលមានកិត្តិយសខ្ពង់ខ្ពស់នៅក្នុងទីក្រុងណាមួយនៃទីក្រុងទាំងពីរនេះ(ម៉ាក្កះ និងតអ៊ីហ្វ)?

៣២-តើពួកគេជាអ្នកបែងចែកក្តីមេត្តាករុណានៃម្ចាស់របស់អ្នកឬ? ការពិតយើងបានបែងចែករវាងពួកគេនូវជីវភាពរស់នៅរបស់ពួកគេនៅក្នុងជីវិតលោកិយនេះ។ ហើយយើងបានលើកតម្កើងរវាងពួកគេឱ្យមានឋានៈខ្ពស់ជាងគ្នាដើម្បីឱ្យពួកគេយកប្រយោជន៍ពីគ្នាទៅវិញទៅមក។ ហើយក្តីមេត្តាករុណានៃម្ចាស់របស់អ្នកប្រសើរជាងអ្វីៗដែលពួកគេប្រមូលផ្តុំ(ក្នុងលោកិយនេះ)ទៅទៀត។

៣៣-ហើយប្រសិនបើមនុស្សលោកមិនប្រមូលផ្តុំជាប្រជាជាតិ(ដែលគ្មានជំនឿ)តែមួយទេនោះ យើងពិតជាផ្តល់ឱ្យអ្នកដែលគ្មានជំនឿលើម្ចាស់មហាសប្បុរសនូវដំបូលផ្ទះរបស់ពួកគេ និងជណ្តើរដែលពួកគេឡើងអំពីប្រាក់ជាមិនខាន។

៣៤-ហើយផ្ទះរបស់ពួកគេដែលមានទ្វារនិងគ្រែជាច្រើនដែលពួកគេទំរេតលើវា(ក៏ធ្វើពីប្រាក់ដែរ)។

៣៥-ព្រមទាំងមានការតុបតែងដោយមាសទៀតផង។ ហើយទាំងអស់នោះគ្មានអ្វីក្រៅពីការលំអសប្បាយសម្រាប់ជីវិតលោកិយ

وَجَعَلَهَا كَلِمَةَۢ بَاقِيَةً فِي عَقِبِهِۦ لَعَلَّهُمۡ
يَرۡجِعُونَ ﴿٢٨﴾

بَلۡ مَتَّعۡتُ هَٰٓؤُلَآءِ وَءَابَآءَهُمۡ حَتَّىٰ جَآءَهُمُ
ٱلۡحَقُّ وَرَسُولٞ مُّبِينٞ ﴿٢٩﴾

وَلَمَّا جَآءَهُمُ ٱلۡحَقُّ قَالُواْ هَٰذَا سِحۡرٞ وَإِنَّا بِهِۦ
كَٰفِرُونَ ﴿٣٠﴾

وَقَالُواْ لَوۡلَا نُزِّلَ هَٰذَا ٱلۡقُرۡءَانُ عَلَىٰ رَجُلٖ
مِّنَ ٱلۡقَرۡيَتَيۡنِ عَظِيمٍ ﴿٣١﴾

أَهُمۡ يَقۡسِمُونَ رَحۡمَتَ رَبِّكَۚ نَحۡنُ قَسَمۡنَا
بَيۡنَهُم مَّعِيشَتَهُمۡ فِي ٱلۡحَيَوٰةِ ٱلدُّنۡيَاۚ وَرَفَعۡنَا
بَعۡضَهُمۡ فَوۡقَ بَعۡضٖ دَرَجَٰتٖ لِّيَتَّخِذَ بَعۡضُهُم
بَعۡضٗا سُخۡرِيّٗاۗ وَرَحۡمَتُ رَبِّكَ خَيۡرٞ مِّمَّا
يَجۡمَعُونَ ﴿٣٢﴾

وَلَوۡلَآ أَن يَكُونَ ٱلنَّاسُ أُمَّةٗ وَٰحِدَةٗ لَّجَعَلۡنَا
لِمَن يَكۡفُرُ بِٱلرَّحۡمَٰنِ لِبُيُوتِهِمۡ سُقُفٗا مِّن فِضَّةٖ
وَمَعَارِجَ عَلَيۡهَا يَظۡهَرُونَ ﴿٣٣﴾

وَلِبُيُوتِهِمۡ أَبۡوَٰبٗا وَسُرُرًا عَلَيۡهَا يَتَّكِـُٔونَ ﴿٣٤﴾

وَزُخۡرُفٗاۚ وَإِن كُلُّ ذَٰلِكَ لَمَّا مَتَٰعُ ٱلۡحَيَوٰةِ
ٱلدُّنۡيَاۚ وَٱلۡأٓخِرَةُ عِندَ رَبِّكَ لِلۡمُتَّقِينَ ﴿٣٥﴾

ឡើយ ។ រីឯ(សុភមង្គល)នៅជាមួយម្ចាស់របស់អ្នកនាថ្ងៃបរលោកវិញ គឺសម្រាប់បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះប៉ុណ្ណោះ ។

وَمَن يَعْشُ عَن ذِكْرِ ٱلرَّحْمَٰنِ نُقَيِّضْ لَهُۥ شَيْطَٰنًا فَهُوَ لَهُۥ قَرِينٌ ﴿٣٦﴾

៣៦-ហើយអ្នកណាដែលគេចចេញពីការរំលឹកទៅចំពោះម្ចាស់មហាសប្បុរសនោះ យើងនឹងឱ្យស្ហៃតននញុះញង់គេ ហើយវាជាមិត្តជិតស្និទ្ធសម្រាប់គេ ។

وَإِنَّهُمْ لَيَصُدُّونَهُمْ عَنِ ٱلسَّبِيلِ وَيَحْسَبُونَ أَنَّهُم مُّهْتَدُونَ ﴿٣٧﴾

៣៧-ហើយពិតប្រាកដណាស់ ពួកវា(ស្ហៃតន)នឹងរារាំងពួកគេអំពីមាគ៌ាដែលត្រឹមត្រូវ ដោយពួកគេគិតថា ពិតប្រាកដណាស់ ពួកគេជាអ្នកទទួលបានការចង្អុលបង្ហាញ ។

حَتَّىٰٓ إِذَا جَآءَنَا قَالَ يَٰلَيْتَ بَيْنِى وَبَيْنَكَ بُعْدَ ٱلْمَشْرِقَيْنِ فَبِئْسَ ٱلْقَرِينُ ﴿٣٨﴾

៣៨-លុះនៅពេលដែលគេបានជួបយើង(នាថ្ងៃបរលោក) គេបាននិយាយ(ទៅកាន់មិត្តរបស់គេ)ថា: ឱអនិច្ចា! សង្ឃឹមថារវាងខ្ញុំនិងអ្នកគឺឆ្ងាយពីគ្នាដូចទិសទាំងពីរ(ខាងកើត និងខាងលិច) ដូច្នេះវា(ស្ហៃតន)គឺជាមិត្តដ៏អាក្រក់បំផុត ។

وَلَن يَنفَعَكُمُ ٱلْيَوْمَ إِذ ظَّلَمْتُمْ أَنَّكُمْ فِى ٱلْعَذَابِ مُشْتَرِكُونَ ﴿٣٩﴾

៣៩-ហើយ(ក្ដីសង្ឃឹមរបស់ពួកគេ)នឹងមិនផ្ដល់ផលប្រយោជន៍សម្រាប់ពួកអ្នកជាដាច់ខាតនៅថ្ងៃនេះ ដោយសារពួកអ្នកបានបំពាន(លើខ្លួនឯង) ។ ពិតប្រាកដណាស់ ពួកអ្នកនឹងស្ថិតក្នុងទារុណកម្មជាមួយគ្នាពុំខានឡើយ ។

أَفَأَنتَ تُسْمِعُ ٱلصُّمَّ أَوْ تَهْدِى ٱلْعُمْىَ وَمَن كَانَ فِى ضَلَٰلٍ مُّبِينٍ ﴿٤٠﴾

៤០-តើអ្នក(មូហាំម៉ាត់) អាចធ្វើឱ្យអ្នកដែលថ្លង់ស្ដាប់ឮ ឬអាចចង្អុលបង្ហាញអ្នកដែលខ្វាក់ និងអ្នកដែលស្ថិតនៅក្នុងភាពវង្វេងយ៉ាងច្បាស់លាស់នោះបានឬ?

فَإِمَّا نَذْهَبَنَّ بِكَ فَإِنَّا مِنْهُم مُّنتَقِمُونَ ﴿٤١﴾

៤១-ហើយបើទោះជាយើងឱ្យអ្នក(មូហាំម៉ាត់)ស្លាប់(មុននឹងទារុណកម្មមកដល់ពួកគេ)ក៏ដោយ ក៏យើងពិតជានឹងធ្វើទារុណកម្មពួកគេ(នៅថ្ងៃបរលោក)ដែរ ។

أَوْ نُرِيَنَّكَ ٱلَّذِى وَعَدْنَٰهُمْ فَإِنَّا عَلَيْهِم مُّقْتَدِرُونَ ﴿٤٢﴾

៤២-ឬក៏យើងនឹងបង្ហាញឱ្យអ្នកឃើញនូវអ្វី(ទារុណកម្ម)ដែលយើងបានសន្យានឹងពួកគេ ។ ហើយពិតប្រាកដណាស់ យើងមានអំណាចលើពួកគេ ។

فَٱسْتَمْسِكْ بِٱلَّذِىٓ أُوحِىَ إِلَيْكَ ۖ إِنَّكَ عَلَىٰ صِرَٰطٍ مُّسْتَقِيمٍ ﴿٤٣﴾

៤៣-ដូច្នេះ ចូរអ្នកកាន់ឱ្យបានខ្ជាប់ខ្ជួននូវអ្វី(គម្ពីរគួរអាន)ដែលគេបានបញ្ចុះឱ្យអ្នក ។ ពិតប្រាកដណាស់ អ្នកកំពុងស្ថិតនៅលើផ្លូវដ៏

ត្រឹមត្រូវ។

៤៤-ហើយពិតប្រាកដណាស់វា(គម្ពីរគួរអាន)គឺជាការដាស់តឿនសម្រាប់អ្នកនិងក្រុមរបស់អ្នក។ ហើយពួកអ្នកនឹងត្រូវគេសួរ។

وَإِنَّهُۥ لَذِكۡرٞ لَّكَ وَلِقَوۡمِكَۖ وَسَوۡفَ
تُسۡـَٔلُونَ ﴿٤٤﴾

៤៥-ចូរអ្នក(មូហាំម៉ាត់)សួរបណ្តាអ្នកនាំសាររបស់យើងដែលយើងបានបញ្ជូនមុនអ្នកថា: តើយើងធ្លាប់បានបង្កើតឱ្យមានព្រះនានាផ្សេងពីម្ចាស់មហាសប្បុរសដើម្បីឱ្យពួកគេគោរពសក្ការៈឬទេ?

وَسۡـَٔلۡ مَنۡ أَرۡسَلۡنَا مِن قَبۡلِكَ مِن رُّسُلِنَآ
أَجَعَلۡنَا مِن دُونِ ٱلرَّحۡمَٰنِ ءَالِهَةٗ يُعۡبَدُونَ ﴿٤٥﴾

៤៦-ហើយជាការពិតណាស់ យើងបានបញ្ជូនមូសាជាមួយនឹងមុជីហ្សាត់របស់យើងទៅកាន់ហ្វៀរអោននិងមន្ត្រីៗរបស់គេ។ ពេលនោះមូសាបានពោលថា: ពិតប្រាកដណាស់ ខ្ញុំជាអ្នកនាំសាររបស់ម្ចាស់គ្រប់គ្រងពិភពទាំងអស់។

وَلَقَدۡ أَرۡسَلۡنَا مُوسَىٰ بِـَٔايَٰتِنَآ إِلَىٰ فِرۡعَوۡنَ
وَمَلَإِيْهِۦ فَقَالَ إِنِّي رَسُولُ رَبِّ ٱلۡعَٰلَمِينَ ﴿٤٦﴾

៤៧-ហើយនៅពេលដែលគាត់បាននាំមុជីហ្សាត់របស់យើងទៅដល់ពួកគេ ពេលនោះពួកគេបែរជាសើចចំអកចំពោះវាទៅវិញ។

فَلَمَّا جَآءَهُم بِـَٔايَٰتِنَآ إِذَا هُم مِّنۡهَا
يَضۡحَكُونَ ﴿٤٧﴾

៤៨-ហើយយើងនឹងមិនបង្ហាញមុជីហ្សាត់ណាមួយដល់ពួកគេទៀតឡើយ លុះត្រាតែវាមានលក្ខណៈធំធេងជាងមុជីហ្សាត់មុន។ ហើយយើងបានដាក់ទណ្ឌកម្មពួកគេ ដើម្បីឱ្យពួកគេវិលត្រឡប់(ទៅរកមាគ៌ាត្រឹមត្រូវ)វិញ។

وَمَا نُرِيهِم مِّنۡ ءَايَةٍ إِلَّا هِيَ أَكۡبَرُ مِنۡ
أُخۡتِهَاۖ وَأَخَذۡنَٰهُم بِٱلۡعَذَابِ لَعَلَّهُمۡ
يَرۡجِعُونَ ﴿٤٨﴾

៤៩-ហើយពួកគេបាននិយាយ(ទៅកាន់មូសា)ថា: ឱគ្រូធ្មប់! ចូរអ្នកបួងសួងសុំពីម្ចាស់របស់អ្នកឱ្យពួកយើងនូវអ្វីដែលទ្រង់បានសន្យាជាមួយអ្នក(ការបញ្ចៀសពីទណ្ឌកម្ម)ចុះ ពួកយើងពិតជានឹងទទួលបានការចង្អុលបង្ហាញជាមិនខាន។

وَقَالُواْ يَٰٓأَيُّهَ ٱلسَّاحِرُ ٱدۡعُ لَنَا رَبَّكَ بِمَا عَهِدَ
عِندَكَ إِنَّنَا لَمُهۡتَدُونَ ﴿٤٩﴾

៥០-ហើយនៅពេលដែលយើងបានបំបាត់ទណ្ឌកម្មចេញពីពួកគេ ពេលនោះពួកគេបែរជាក្បត់(ពាក្យសន្យា)ទៅវិញ។

فَلَمَّا كَشَفۡنَا عَنۡهُمُ ٱلۡعَذَابَ إِذَا هُمۡ
يَنكُثُونَ ﴿٥٠﴾

៥១-ហើយហ្វៀរអោនបានអំពាវនាវទៅកាន់ក្រុមរបស់គេដោយនិយាយថា: ឱក្រុមរបស់យើង! តើអាណាចក្រអេហ្ស៊ីបដោយមានទន្លេហូរពីក្រោមវិមានរបស់យើងទាំងនេះមិនមែនជាកម្មសិទ្ធិរបស់យើងទេឬ? តើពួកអ្នកមិនឃើញទេឬ?

وَنَادَىٰ فِرۡعَوۡنُ فِي قَوۡمِهِۦ قَالَ يَٰقَوۡمِ أَلَيۡسَ
لِي مُلۡكُ مِصۡرَ وَهَٰذِهِ ٱلۡأَنۡهَٰرُ تَجۡرِي مِن
تَحۡتِيٓۚ أَفَلَا تُبۡصِرُونَ ﴿٥١﴾

أَمْ أَنَا۠ خَيْرٌ مِّنْ هَٰذَا ٱلَّذِى هُوَ مَهِينٌ وَلَا يَكَادُ يُبِينُ ﴿٥٢﴾

៥២-ផ្ទុយទៅវិញ ខ្ញុំជាមនុស្សប្រសើរជាងមនុស្សនេះ(មូសា) ដែលគេជាមនុស្សថោកទាបនិងនិយាយមិនសូវច្បាស់លាស់។

فَلَوْلَآ أُلْقِىَ عَلَيْهِ أَسْوِرَةٌ مِّن ذَهَبٍ أَوْ جَآءَ مَعَهُ ٱلْمَلَٰٓئِكَةُ مُقْتَرِنِينَ ﴿٥٣﴾

៥៣-ដូច្នេះ ហេតុអ្វីបានជាគេមិនត្រូវបំពាក់កងដៃអំពីមាស ឬម៉ាឡាអ៊ិកាត់មិនរួមដំណើរមកជាមួយគេ ?

فَٱسْتَخَفَّ قَوْمَهُۥ فَأَطَاعُوهُ ۚ إِنَّهُمْ كَانُوا۟ قَوْمًا فَٰسِقِينَ ﴿٥٤﴾

៥៤-ពេលនោះគេ(ហ្វៀរអោន)បានបំភិតបំភ័យក្រុមរបស់គេ ដូច្នេះពួកគេក៏ប្រតិបត្តិតាមគេ។ ពិតប្រាកដណាស់ ពួកគេគឺជាក្រុមមួយដែលប្រាសចាកពីការប្រតិបត្តិតាមអល់ឡោះ ។

فَلَمَّآ ءَاسَفُونَا ٱنتَقَمْنَا مِنْهُمْ فَأَغْرَقْنَٰهُمْ أَجْمَعِينَ ﴿٥٥﴾

៥៥-ហើយនៅពេលដែលពួកគេបានធ្វើឱ្យយើងខឹងសម្បា យើងក៏ដាក់ទណ្ឌកម្មពួកគេ ដោយយើងពន្លិចពួកគេទាំងអស់គ្នា(ទៅក្នុងទឹកសមុទ្រ)។

فَجَعَلْنَٰهُمْ سَلَفًا وَمَثَلًا لِّلْءَاخِرِينَ ﴿٥٦﴾

៥៦-ហើយយើងបានយកពួកគេធ្វើជាគំរូ និងធ្វើជាឧទាហរណ៍សម្រាប់មនុស្សជំនាន់ក្រោយ ។

۞ وَلَمَّا ضُرِبَ ٱبْنُ مَرْيَمَ مَثَلًا إِذَا قَوْمُكَ مِنْهُ يَصِدُّونَ ﴿٥٧﴾

៥៧-ហើយនៅពេលដែលគេយកកូនប្រុសរបស់ម៉ារយ៉ាំ(អ៊ីសា)ធ្វើជាឧទាហរណ៍ ពេលនោះក្រុមដែលប្រឆាំងនឹងអ្នក(មូហាំម៉ាត់) រីករាយនឹងវា។

وَقَالُوٓا۟ ءَأَٰلِهَتُنَا خَيْرٌ أَمْ هُوَ ۚ مَا ضَرَبُوهُ لَكَ إِلَّا جَدَلًۢا ۚ بَلْ هُمْ قَوْمٌ خَصِمُونَ ﴿٥٨﴾

៥៨-ហើយពួកគេបាននិយាយថាៈ តើព្រះនានារបស់យើងប្រសើរជាង ឬមួយគេ(អ៊ីសា)ប្រសើរជាង? ពួកគេមិនលើកឧទាហរណ៍ពីរឿងគេប្រាប់អ្នក(មូហាំម៉ាត់)ក្រៅពីការប្រកែកយកឈ្នះឡើយ។ ផ្ទុយទៅវិញ ពួកគេគឺជាក្រុមដែលចូលចិត្តឈ្លោះប្រកែកគ្នា។

إِنْ هُوَ إِلَّا عَبْدٌ أَنْعَمْنَا عَلَيْهِ وَجَعَلْنَٰهُ مَثَلًا لِّبَنِىٓ إِسْرَٰٓءِيلَ ﴿٥٩﴾

៥៩-គេ(អ៊ីសា)គ្រាន់តែជាខ្ញុំម្នាក់ដែលយើងបានប្រទាននៀកម៉ាត់ដល់គេប៉ុណ្ណោះ ហើយយើងបានយកគេធ្វើជាឧទាហរណ៍សម្រាប់អំបូរអ៊ីស្រាអែល។

وَلَوْ نَشَآءُ لَجَعَلْنَا مِنكُم مَّلَٰٓئِكَةً فِى ٱلْأَرْضِ يَخْلُفُونَ ﴿٦٠﴾

៦០-ហើយប្រសិនបើយើងមានចេតនា យើងពិតជាចាត់ម៉ាឡាអ៊ិកាត់មកគ្រប់គ្រងនៅលើផែនដីនេះជំនួសពួកអ្នកជាមិនខាន។

៦១-ហើយពិតប្រាកដណាស់ (ការចុះពីលើមេឃរបស់)គេ (អ៊ីសា) គឺជាសញ្ញាកំណត់នៃថ្ងៃបរលោក ។ ដូច្នេះ ចូរពួកអ្នកកុំមន្ទិលសង្ស័យអំពីវាឱ្យសោះ ហើយពួកអ្នកត្រូវប្រតិបត្តិតាមយើង ។ នេះហើយគឺជាមាគ៌ាដែលត្រឹមត្រូវ ។

وَإِنَّهُۥ لَعِلۡمٞ لِّلسَّاعَةِ فَلَا تَمۡتَرُنَّ بِهَا وَٱتَّبِعُونِۚ هَٰذَا صِرَٰطٞ مُّسۡتَقِيمٞ ﴿٦١﴾

៦២-ហើយកុំបណ្តោយឱ្យស្ហៃតនមករារាំងពួកអ្នកឱ្យសោះ ។ ពិតប្រាកដណាស់ ស្ហៃតនគឺជាសត្រូវរបស់ពួកអ្នកយ៉ាងច្បាស់លាស់ ។

وَلَا يَصُدَّنَّكُمُ ٱلشَّيۡطَٰنُۖ إِنَّهُۥ لَكُمۡ عَدُوّٞ مُّبِينٞ ﴿٦٢﴾

៦៣-ហើយនៅពេលអ៊ីសាបាននាំមកនូវភស្តុតាងយ៉ាងច្បាស់លាស់ជាច្រើន(មកកាន់អំបូរអ៊ីស្រាអែល) គាត់ក៏បានពោលថា: ជាការពិតណាស់ ខ្ញុំបាននាំមកឱ្យពួកអ្នកនូវហ៊ិកម៉ាត់(ភាពជាណាពី) និងដើម្បីឱ្យខ្ញុំបញ្ជាក់ប្រាប់ពួកអ្នកនូវរឿងមួយចំនួន ដែលពួកអ្នកកំពុងខ្វែងគំនិតគ្នាអំពីវា ។ ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ និងប្រតិបត្តិតាមខ្ញុំ ។

وَلَمَّا جَآءَ عِيسَىٰ بِٱلۡبَيِّنَٰتِ قَالَ قَدۡ جِئۡتُكُم بِٱلۡحِكۡمَةِ وَلِأُبَيِّنَ لَكُم بَعۡضَ ٱلَّذِي تَخۡتَلِفُونَ فِيهِۖ فَٱتَّقُواْ ٱللَّهَ وَأَطِيعُونِ ﴿٦٣﴾

៦៤-ពិតប្រាកដណាស់ អល់ឡោះ ទ្រង់គឺជាម្ចាស់របស់ខ្ញុំ និងជាម្ចាស់របស់ពួកអ្នក ។ ដូច្នេះ ចូរពួកអ្នកគោរពសក្ការៈចំពោះទ្រង់ ។ នេះហើយគឺជាមាគ៌ាដ៏ត្រឹមត្រូវ ។

إِنَّ ٱللَّهَ هُوَ رَبِّي وَرَبُّكُمۡ فَٱعۡبُدُوهُۚ هَٰذَا صِرَٰطٞ مُّسۡتَقِيمٞ ﴿٦٤﴾

៦៥-ហើយក្រុមនានាក្នុងចំណោមពួកគេបានខ្វែងគំនិតគ្នា(ក្នុងរឿងអ៊ីសា)[1] ។ ហើយភាពវិនាសអន្តរាយចំពោះពួកដែលបានបំពានគឺទារុណកម្មនៅថ្ងៃមួយយ៉ាងឈឺចាប់(ថ្ងៃបរលោក) ។

فَٱخۡتَلَفَ ٱلۡأَحۡزَابُ مِنۢ بَيۡنِهِمۡۖ فَوَيۡلٞ لِّلَّذِينَ ظَلَمُواْ مِنۡ عَذَابِ يَوۡمٍ أَلِيمٍ ﴿٦٥﴾

៦៦-ពួកគេមិនរង់ចាំអ្វីក្រៅពីថ្ងៃបរលោកដែលនឹងមកដល់ពួកគេភ្លាមៗ ដោយពួកគេមិនដឹងខ្លួននោះឡើយ ។

هَلۡ يَنظُرُونَ إِلَّا ٱلسَّاعَةَ أَن تَأۡتِيَهُم بَغۡتَةٗ وَهُمۡ لَا يَشۡعُرُونَ ﴿٦٦﴾

៦៧-មិត្តភក្តិទាំងឡាយនៅថ្ងៃនោះ(ថ្ងៃបរលោក)នឹងក្លាយជាសត្រូវនឹងគ្នា លើកលែងតែអ្នកដែលកោតខ្លាចអល់ឡោះប៉ុណ្ណោះ ។

ٱلۡأَخِلَّآءُ يَوۡمَئِذِۭ بَعۡضُهُمۡ لِبَعۡضٍ عَدُوٌّ إِلَّا ٱلۡمُتَّقِينَ ﴿٦٧﴾

---

១-ពួកគេបានបែកទៅជាក្រុមៗក្នុងរឿងអ៊ីសា ដោយអ្នកខ្លះនិយាយថា អ៊ីសាគឺជាខ្ញុំរបស់អល់ឡោះ និងជាអ្នកនាំសាររបស់ទ្រង់ ដែលជាគំនិតត្រឹមត្រូវ ។ ហើយអ្នកខ្លះនិយាយថា: អ៊ីសាគឺជាកូនប្រុសរបស់អល់ឡោះ និងអ្នកខ្លះទៀតនិយាយថា: អ៊ីសាគឺជាអល់ឡោះតែម្តង ។

يَٰعِبَادِ لَا خَوۡفٌ عَلَيۡكُمُ ٱلۡيَوۡمَ وَلَآ أَنتُمۡ تَحۡزَنُونَ ٦٨

៦៨-ឱបណ្តាខ្ញុំរបស់យើង! គ្មានការភ័យខ្លាចចំពោះពួកអ្នកទេ នៅថ្ងៃនេះ ហើយពួកអ្នកក៏មិនមានទុក្ខព្រួយដែរ ។

ٱلَّذِينَ ءَامَنُواْ بِـَٔايَٰتِنَا وَكَانُواْ مُسۡلِمِينَ ٦٩

៦៩-គឺបណ្តាអ្នកដែលមានជំនឿនឹងអាយ៉ាត់ៗរបស់យើង ហើយ ពួកគេជាអ្នកដែលបានប្រគល់ខ្លួនចំពោះអល់ឡោះ ។

ٱدۡخُلُواْ ٱلۡجَنَّةَ أَنتُمۡ وَأَزۡوَٰجُكُمۡ تُحۡبَرُونَ ٧٠

៧០-ចូរពួកអ្នក និងភរិយាៗរបស់ពួកអ្នកចូលឋានសួគ៌ដោយ រីករាយចុះ ។

يُطَافُ عَلَيۡهِم بِصِحَافٖ مِّن ذَهَبٖ وَأَكۡوَابٖۖ وَفِيهَا مَا تَشۡتَهِيهِ ٱلۡأَنفُسُ وَتَلَذُّ ٱلۡأَعۡيُنُۖ وَأَنتُمۡ فِيهَا خَٰلِدُونَ ٧١

៧១-ថាសនិងពែងធ្វើពីមាសត្រូវគេដាក់នៅជុំវិញពួកគេ ។ ហើយនៅក្នុងឋានសួគ៌នោះមានអ្វីៗតាមចំណង់ចិត្ត ព្រមទាំង សប្បាយភ្នែកផងដែរ ។ ហើយពួកអ្នកស្ថិតនៅក្នុងនោះជាអមតៈ ។

وَتِلۡكَ ٱلۡجَنَّةُ ٱلَّتِيٓ أُورِثۡتُمُوهَا بِمَا كُنتُمۡ تَعۡمَلُونَ ٧٢

៧២-នោះហើយគឺជាឋានសួគ៌ដែលគេបានប្រទានវាឱ្យពួកអ្នក ដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានសាងកន្លងមក ។

لَكُمۡ فِيهَا فَٰكِهَةٞ كَثِيرَةٞ مِّنۡهَا تَأۡكُلُونَ ٧٣

៧៣-មានផ្លែឈើជាច្រើនសម្រាប់ពួកអ្នកនៅក្នុងនោះដែលពួក អ្នកអាចបរិភោគអំពីវាបាន ។

إِنَّ ٱلۡمُجۡرِمِينَ فِي عَذَابِ جَهَنَّمَ خَٰلِدُونَ ٧٤

៧៤-ពិតប្រាកដណាស់ ពួកដែលប្រព្រឹត្តអំពើបាបនោះ ពួកគេ ស្ថិតនៅក្នុងទារុណកម្មនៃនរកជើហាន់ណាំជាអមតៈ ។

لَا يُفَتَّرُ عَنۡهُمۡ وَهُمۡ فِيهِ مُبۡلِسُونَ ٧٥

៧៥-គេមិនសម្រាល( ទារុណកម្ម) ដល់ពួកគេឡើយ ។ ហើយ ពួកគេស្ថិតនៅក្នុងនោះទាំងក្តីអស់សង្ឃឹម ។

وَمَا ظَلَمۡنَٰهُمۡ وَلَٰكِن كَانُواْ هُمُ ٱلظَّٰلِمِينَ ٧٦

៧៦-ហើយយើងមិនបានបំពានលើពួកគេឡើយ ក៏ប៉ុន្តែពួកគេ ទេដែលជាអ្នកបានបំពាននោះ ។

وَنَادَوۡاْ يَٰمَٰلِكُ لِيَقۡضِ عَلَيۡنَا رَبُّكَۖ قَالَ إِنَّكُم مَّٰكِثُونَ ٧٧

៧៧-ពួកគេបានស្រែកហៅថាៈ ឱម៉ាឡិក[1] ! ចូរឱ្យម្ចាស់របស់ អ្នកយកជីវិតពួកយើងចុះ( ដើម្បីពួកយើងរួចផុតពីទារុណកម្មនេះ) ។ ម៉ាឡិកបានតបវិញថាៈ ពិតប្រាកដណាស់ ពួកអ្នករស់នៅទីនេះជា

១-ម៉ាឡិក : ជាឈ្មោះម៉ាឡាអ៊ីកាត់ម្នាក់ ដែលអល់ឡោះចាត់តាំងឱ្យគ្រប់គ្រងនរកជើហាន់ណាំ ។

រឿងរហូត ។

لَقَدۡ جِئۡنَٰكُم بِٱلۡحَقِّ وَلَٰكِنَّ أَكۡثَرَكُمۡ لِلۡحَقِّ كَٰرِهُونَ ﴿٧٨﴾

៧៨-ជាការពិតណាស់យើង(អល់ឡោះ) បាននាំមកឱ្យពួកអ្នកនូវការពិត(តាមរយៈអ្នកនាំសាររបស់យើង) ក៏ប៉ុន្តែពួកអ្នកភាគច្រើនបែរជាស្អប់ខ្ពើមចំពោះការពិតនោះទៅវិញ ។

أَمۡ أَبۡرَمُوٓاْ أَمۡرٗا فَإِنَّا مُبۡرِمُونَ ﴿٧٩﴾

៧៩-ផ្ទុយទៅវិញ ពួកគេបានរៀបចំល្បិចកល(ចំពោះមូហាំម៉ាត់) តែតាមពិតយើងទេដែលជាអ្នករៀបចំល្បិចកលនោះ ។

أَمۡ يَحۡسَبُونَ أَنَّا لَا نَسۡمَعُ سِرَّهُمۡ وَنَجۡوَىٰهُمۚ بَلَىٰ وَرُسُلُنَا لَدَيۡهِمۡ يَكۡتُبُونَ ﴿٨٠﴾

៨០-ឬមួយពួកគេគិតថា ពិតប្រាកដណាស់ យើងមិនស្តាប់ឮនូវការសម្ងាត់របស់ពួកគេ និងការខ្សឹបខ្សៀវរបស់ពួកគេទេឬ? មិនដូច្នោះទេ តាមពិតយើងស្តាប់ឮ ហើយអ្នកនាំសារ(ម៉ាឡាអ៊ីកាត់)របស់យើងដែលនៅជាមួយពួកគេកំពុងកត់ត្រា(រាល់ទង្វើរបស់ពួកគេ) ។

قُلۡ إِن كَانَ لِلرَّحۡمَٰنِ وَلَدٞ فَأَنَا۠ أَوَّلُ ٱلۡعَٰبِدِينَ ﴿٨١﴾

៨១-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ប្រសិនបើម្ចាស់មហាសប្បុរសមានកូនប្រុសពិតមែននោះ គឺខ្ញុំជាអ្នកគោរពសក្ការៈ(ចំពោះកូននោះ)មុនគេបង្អស់ ។

سُبۡحَٰنَ رَبِّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ رَبِّ ٱلۡعَرۡشِ عَمَّا يَصِفُونَ ﴿٨٢﴾

៨២-មហាស្អាតស្អំ ម្ចាស់នៃមេឃជាច្រើនជាន់និងផែនដី ម្ចាស់នៃអារ៉ស្ហអំពីអ្វីដែលពួកគេនិយាយប្រឌិត ។

فَذَرۡهُمۡ يَخُوضُواْ وَيَلۡعَبُواْ حَتَّىٰ يُلَٰقُواْ يَوۡمَهُمُ ٱلَّذِي يُوعَدُونَ ﴿٨٣﴾

៨៣-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)បណ្តោយឱ្យពួកគេលិចលង់(ក្នុងភាពវង្វេង) និងលេងសើចរហូតដល់ពួកគេជួបនឹងថ្ងៃដែលគេបានសន្យាចំពោះពួកគេ(ថ្ងៃបរលោក)ចុះ ។

وَهُوَ ٱلَّذِي فِي ٱلسَّمَآءِ إِلَٰهٞ وَفِي ٱلۡأَرۡضِ إِلَٰهٞۚ وَهُوَ ٱلۡحَكِيمُ ٱلۡعَلِيمُ ﴿٨٤﴾

៨៤-ហើយទ្រង់គឺជាម្ចាស់ដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដនៅលើមេឃ និងជាម្ចាស់ដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដនៅលើផែនដី ។ ហើយទ្រង់មហាគតិបណ្ឌិត មហាដឹង ។

وَتَبَارَكَ ٱلَّذِي لَهُۥ مُلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَمَا بَيۡنَهُمَا وَعِندَهُۥ عِلۡمُ ٱلسَّاعَةِ وَإِلَيۡهِ تُرۡجَعُونَ ﴿٨٥﴾

៨៥-ហើយមហាឧត្តុង្គឧត្តម ម្ចាស់ដែលការគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី ហើយនិងអ្វីៗដែលមាននៅរវាងវាទាំងពីរជាកម្មសិទ្ធិរបស់ទ្រង់ ។ ហើយមានតែទ្រង់ប៉ុណ្ណោះដែលដឹងពីកាលកំណត់នៃថ្ងៃបរលោក ។ ហើយពួកអ្នកនឹងត្រូវវិលត្រឡប់ទៅកាន់ទ្រង់វិញ ។

وَلَا يَمْلِكُ ٱلَّذِينَ يَدْعُونَ مِن دُونِهِ ٱلشَّفَٰعَةَ إِلَّا مَن شَهِدَ بِٱلْحَقِّ وَهُمْ يَعْلَمُونَ ﴿٨٦﴾

៨៦-ហើយពួក(ព្រះនានា)ដែលពួកគេ(ពួកមូស្ហរីគីន)បួងសួងសុំក្រៅពីទ្រង់នោះ គ្មានអំណាចក្នុងការជួយអន្តរាគមន៍ឡើយ លើកលែងតែអ្នកដែលបានទទួលស្គាល់ការពិត(មានជំនឿ) ដោយពួកគេជឿជាក់ប៉ុណ្ណោះ។

وَلَئِن سَأَلْتَهُم مَّنْ خَلَقَهُمْ لَيَقُولُنَّ ٱللَّهُ ۖ فَأَنَّىٰ يُؤْفَكُونَ ﴿٨٧﴾

៨៧-ហើយប្រសិនបើអ្នក(មូហាំម៉ាត់)សួរពួកគេថាៈ តើអ្នកណាដែលបានបង្កើតពួកគេ? ពួកគេប្រាកដជានឹងឆ្លើយថាៈ គឺអល់ឡោះ។ ដូច្នេះ តើពួកគេអាចគេចចេញពីការពិតបានយ៉ាងដូចម្តេច?

وَقِيلِهِۦ يَٰرَبِّ إِنَّ هَٰٓؤُلَآءِ قَوْمٌ لَّا يُؤْمِنُونَ ﴿٨٨﴾

៨៨-ហើយ(អល់ឡោះដឹងពី)ការត្អូញត្អែររបស់មូហាំម៉ាត់ថាៈ ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ពួកទាំងនេះជាក្រុមដែលគ្មានជំនឿ។

فَٱصْفَحْ عَنْهُمْ وَقُلْ سَلَٰمٌ ۚ فَسَوْفَ يَعْلَمُونَ ﴿٨٩﴾

៨៩-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)ចាកចេញឱ្យឆ្ងាយពីពួកគេ ហើយពោលថាៈ សូមឱ្យមានសន្តិភាព។ ពួកគេគង់តែនឹងដឹងជាមិនខាន។

## سورة الدخان

## ជំពូកអាត់ឌូខន

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

حمٓ ﴿١﴾

១-ហា មីម

وَٱلْكِتَٰبِ ٱلْمُبِينِ ﴿٢﴾

២-អល់ឡោះស្បថនឹងគម្ពីរ(គួរអាន)ដែលច្បាស់លាស់។

إِنَّآ أَنزَلْنَٰهُ فِى لَيْلَةٍ مُّبَٰرَكَةٍ ۚ إِنَّا كُنَّا مُنذِرِينَ ﴿٣﴾

៣-ពិតប្រាកដណាស់ យើងបានបញ្ចុះវានៅក្នុងរាត្រីដ៏ឧត្តុង្គឧត្តម(យប់មួយនៃខែរ៉ាមាដនដែលគេឱ្យឈ្មោះថា ឡៃឡាតុលកទើរ)។ ពិតប្រាកដណាស់ យើងគឺជាអ្នកដែលដាស់តឿនព្រមាន(ដល់មនុស្សលោក)។

فِيهَا يُفْرَقُ كُلُّ أَمْرٍ حَكِيمٍ ﴿٤﴾

៤-នៅក្នុងយប់នោះត្រូវគេបែងចែកនូវរាល់បទបញ្ជាដែលប្រកបដោយគតិបណ្ឌិត

أَمْرًا مِّنْ عِندِنَآ ۚ إِنَّا كُنَّا مُرْسِلِينَ ﴿٥﴾

៥-គឺជាបទបញ្ជាដែលចេញពីយើង។ ពិតប្រាកដណាស់ យើងគឺជាអ្នកបញ្ជូនបណ្តាអ្នកនាំសារ(ទៅកាន់មនុស្សលោក)

رَحۡمَةٗ مِّن رَّبِّكَۚ إِنَّهُۥ هُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ٦

៦-ដែលជាក្ដីមេត្ដាករុណាពីម្ចាស់របស់អ្នក(មូហាំម៉ាត់)។ ពិតប្រាកដណាស់ ទ្រង់មហាឮ មហាដឹង។

رَبِّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَمَا بَيۡنَهُمَآۖ إِن كُنتُم مُّوقِنِينَ ٧

៧-ទ្រង់ជាម្ចាស់នៃមេឃជាច្រើនជាន់ និងផែនដី ហើយនិងអ្វីៗដែលមាននៅរវាងវាទាំងពីរ ប្រសិនបើពួកអ្នកជាអ្នកជឿជាក់នោះ។

لَآ إِلَٰهَ إِلَّا هُوَ يُحۡيِۦ وَيُمِيتُۖ رَبُّكُمۡ وَرَبُّ ءَابَآئِكُمُ ٱلۡأَوَّلِينَ ٨

៨-គ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ។ ទ្រង់ធ្វើឱ្យរស់ និងធ្វើឱ្យស្លាប់។ ទ្រង់ជាម្ចាស់របស់ពួកអ្នក និងជាម្ចាស់របស់ជីដូនជីតាជំនាន់មុនរបស់ពួកអ្នក។

بَلۡ هُمۡ فِي شَكّٖ يَلۡعَبُونَ ٩

៩-ផ្ទុយទៅវិញ ពួកគេ(ពួកមូស្ហរីគីន)ស្ថិតក្នុងភាពសង្ស័យទាំងលេងសើច។

فَٱرۡتَقِبۡ يَوۡمَ تَأۡتِي ٱلسَّمَآءُ بِدُخَانٖ مُّبِينٖ ١٠

១០-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)រង់ចាំថ្ងៃមួយដែលមេឃនឹងនាំមកនូវផ្សែងយ៉ាងច្បាស់។

يَغۡشَى ٱلنَّاسَۖ هَٰذَا عَذَابٌ أَلِيمٞ ١١

១១-វានឹងគ្របដណ្ដប់លើមនុស្សលោក។ នេះគឺជាទារុណកម្មដ៏ឈឺចាប់។

رَّبَّنَا ٱكۡشِفۡ عَنَّا ٱلۡعَذَابَ إِنَّا مُؤۡمِنُونَ ١٢

១២-(ពួកគេនិយាយថា) ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្ដាបញ្ចៀសទណ្ឌកម្មនេះពីពួកយើងផង ពួកយើងពិតជាអ្នកដែលមានជំនឿ។

أَنَّىٰ لَهُمُ ٱلذِّكۡرَىٰ وَقَدۡ جَآءَهُمۡ رَسُولٞ مُّبِينٞ ١٣

១៣-តើពួកគេអាចភ្ញាក់រលឹកបានយ៉ាងដូចម្ដេច(នៅពេលទណ្ឌកម្មបានធ្លាក់លើពួកគេ) ខណៈដែលអ្នកនាំសារដ៏ច្បាស់លាស់បានមកដល់ពួកគេហើយនោះ?

ثُمَّ تَوَلَّوۡاْ عَنۡهُ وَقَالُواْ مُعَلَّمٞ مَّجۡنُونٌ ١٤

១៤-បន្ទាប់មកពួកគេបានបែរចេញពីគេ(អ្នកនាំសារ) ហើយបាននិយាយថាៈ គេជាមនុស្សដែលត្រូវគេពង្វក់ ជាមនុស្សវិកលចរិតទៅវិញ។

إِنَّا كَاشِفُواْ ٱلۡعَذَابِ قَلِيلًاۚ إِنَّكُمۡ عَآئِدُونَ ١٥

១៥-ពិតប្រាកដណាស់ យើងជាអ្នកដកទណ្ឌកម្មចេញមួយរយៈខ្លី។ ពិតប្រាកដណាស់ ពួកអ្នកនឹងត្រឡប់ទៅធាតុដើមវិញ

يَوۡمَ نَبۡطِشُ ٱلۡبَطۡشَةَ ٱلۡكُبۡرَىٰٓ إِنَّا

១៦-នៅថ្ងៃដែលយើងដាក់ទារុណកម្មយ៉ាងខ្លាំងក្លា(ទៅលើ

مُنتَقِمُونَ ﴿١٦﴾

ពួកប្រឆាំង) ។ ពិតប្រាកដណាស់ យើងជាអ្នកដាក់ទារុណកម្ម ។

۞ وَلَقَدْ فَتَنَّا قَبْلَهُمْ قَوْمَ فِرْعَوْنَ وَجَآءَهُمْ رَسُولٌ كَرِيمٌ ﴿١٧﴾

១៧-ហើយជាការពិតណាស់ យើងបានសាកល្បងក្រុមរបស់ហ្វៀរអោនមុនពួកគេ(ពួកមូស្ហរីគីន)ទៅទៀត ដោយអ្នកនាំសារម្នាក់ដ៏ថ្លៃថ្នូរ(មូសា)បានមកកាន់ពួកគេ ។

أَنْ أَدُّوٓاْ إِلَيَّ عِبَادَ ٱللَّهِ إِنِّي لَكُمْ رَسُولٌ أَمِينٌ ﴿١٨﴾

១៨-(មូសាបានពោលថា) ចូរពួកអ្នកប្រគល់បណ្ដាខ្ញុំរបស់អល់ឡោះ(អំបូរអ៊ីស្រាអែល)មកឱ្យខ្ញុំវិញផង ។ ពិតប្រាកដណាស់ ខ្ញុំជាអ្នកនាំសារម្នាក់ដែលជាទីទុកចិត្តបំផុតសម្រាប់ពួកអ្នក ។

وَأَن لَّا تَعْلُواْ عَلَى ٱللَّهِ إِنِّيٓ ءَاتِيكُم بِسُلْطَٰنٍ مُّبِينٍ ﴿١٩﴾

១៩-ហើយចូរពួកអ្នកកុំក្រអឺតក្រទមចំពោះអល់ឡោះឱ្យសោះ ។ ពិតប្រាកដណាស់ ខ្ញុំជាអ្នកដែលនាំភស្ដុតាងយ៉ាងជាក់ច្បាស់មកឱ្យពួកអ្នក ។

وَإِنِّي عُذْتُ بِرَبِّي وَرَبِّكُمْ أَن تَرْجُمُونِ ﴿٢٠﴾

២០-ហើយពិតប្រាកដណាស់ ខ្ញុំសុំពីម្ចាស់របស់ខ្ញុំ និងជាម្ចាស់របស់ពួកអ្នកឱ្យការពារខ្ញុំកុំឱ្យពួកអ្នកគប់ខ្ញុំនឹងដុំថ្ម ។

وَإِن لَّمْ تُؤْمِنُواْ لِي فَٱعْتَزِلُونِ ﴿٢١﴾

២១-ហើយប្រសិនបើពួកអ្នកមិនជឿខ្ញុំទេនោះ សូមពួកអ្នកទុកឱ្យខ្ញុំនៅម្នាក់ឯងចុះ ។

فَدَعَا رَبَّهُۥٓ أَنَّ هَٰٓؤُلَآءِ قَوْمٌ مُّجْرِمُونَ ﴿٢٢﴾

២២-ពេលនោះ គាត់(មូសា)បានពោលទៅកាន់ម្ចាស់របស់គាត់ថា: ពិតប្រាកដណាស់ ពួកទាំងនោះគឺជាក្រុមដែលប្រព្រឹត្តបាបកម្ម ។

فَأَسْرِ بِعِبَادِي لَيْلًا إِنَّكُم مُّتَّبَعُونَ ﴿٢٣﴾

២៣-(អល់ឡោះមានបន្ទូលតបវិញថា) ដូច្នេះចូរអ្នក(មូសា)នាំខ្ញុំទាំងឡាយរបស់យើង(អ្នកមានជំនឿ)ចាកចេញនៅពេលយប់ចុះ ។ ពួកអ្នកពិតជានឹងត្រូវគេដេញតាម ។

وَٱتْرُكِ ٱلْبَحْرَ رَهْوًا إِنَّهُمْ جُندٌ مُّغْرَقُونَ ﴿٢٤﴾

២៤-ហើយចូរអ្នក(មូសា)ទុកឱ្យទឹកសមុទ្រនោះមានចន្លោះដូចនេះចុះ ។ ពិតប្រាកដណាស់ ពួកគេគឺជាក្រុមទាហានដែលត្រូវគេពន្លិច(នៅក្នុងសមុទ្រ) ។

كَمْ تَرَكُواْ مِن جَنَّٰتٍ وَعُيُونٍ ﴿٢٥﴾

២៥-ជាច្រើនមកហើយដែលពួកគេបានបន្សល់ទុកនូវសួនច្បារ និងប្រភពទឹក ។

وَزُرُوعٍ وَمَقَامٍ كَرِيمٍ ﴿٢٦﴾

២៦-និងចំការ ហើយនិងភូមិគ្រឹះដ៏ប្រណីត ។

وَنَعۡمَةٖ كَانُواْ فِيهَا فَٰكِهِينَ ٢٧

២៧-ព្រមទាំងសេចក្ដីសុខដែលពួកគេធ្លាប់ទទួលបាននៅក្នុង
លោកិយនេះ ។

كَذَٰلِكَۖ وَأَوۡرَثۡنَٰهَا قَوۡمًا ءَاخَرِينَ ٢٨

២៨-គឺដូច្នោះហើយ[1] ។ ហើយយើងបានបន្សល់វាទុកជាមរតក
ដល់ក្រុមដទៃទៀត ។

فَمَا بَكَتۡ عَلَيۡهِمُ ٱلسَّمَآءُ وَٱلۡأَرۡضُ وَمَا كَانُواْ
مُنظَرِينَ ٢٩

២៩-ហើយមេឃនិងផែនដីមិនបានយំស្រណោះចំពោះពួកគេ
ឡើយ ហើយពួកគេក៏មិនត្រូវបានគេពន្យារពេល(ដាក់ទណ្ឌកម្ម)
ដែរ ។

وَلَقَدۡ نَجَّيۡنَا بَنِيٓ إِسۡرَٰٓءِيلَ مِنَ ٱلۡعَذَابِ
ٱلۡمُهِينِ ٣٠

៣០-ហើយជាការពិតណាស់ យើងបានជួយសង្គ្រោះអំបូរ
អ៊ីស្រាអែលអំពីទណ្ឌកម្មដ៏អាម៉ាស់ ។

مِن فِرۡعَوۡنَۚ إِنَّهُۥ كَانَ عَالِيٗا مِّنَ
ٱلۡمُسۡرِفِينَ ٣١

៣១-(គឺទណ្ឌកម្ម)របស់ហ្វៀរអោន ។ ពិតប្រាកដណាស់ គេ
គឺជាអ្នកដែលក្រអឺតក្រទមម្នាក់ក្នុងចំណោមពួកដែលបំពាន ។

وَلَقَدِ ٱخۡتَرۡنَٰهُمۡ عَلَىٰ عِلۡمٍ عَلَى ٱلۡعَٰلَمِينَ ٣٢

៣២-ហើយជាការពិតណាស់ យើងបានជ្រើសរើសពួកគេ
(អំបូរអ៊ីស្រាអែល)ឱ្យគ្រប់គ្រងពិភពលោក(នៅសម័យនោះ)
តាមការដឹងរបស់យើង ។

وَءَاتَيۡنَٰهُم مِّنَ ٱلۡأٓيَٰتِ مَا فِيهِ بَلَٰٓؤٞاْ
مُّبِينٌ ٣٣

៣៣-ហើយយើងបានផ្ដល់មុជីហ្សាត់ជាច្រើនដល់ពួកគេ ដោយ
ក្នុងនោះមានការសាកល្បងយ៉ាងច្បាស់លាស់ ។

إِنَّ هَٰٓؤُلَآءِ لَيَقُولُونَ ٣٤

៣៤-ពិតប្រាកដណាស់ ពួកទាំងនេះ(ពួកគ្មានជំនឿគូរ៉ស្ហ)នឹង
និយាយថា:

إِنۡ هِيَ إِلَّا مَوۡتَتُنَا ٱلۡأُولَىٰ وَمَا نَحۡنُ
بِمُنشَرِينَ ٣٥

៣៥-វាគ្មានអ្វីក្រៅពីសេចក្ដីស្លាប់លើកទីមួយរបស់ពួកយើង
នោះឡើយ ហើយពួកយើងក៏មិនត្រូវបានគេធ្វើឱ្យរស់ឡើងវិញ
ដែរ ។

فَأۡتُواْ بِـَٔابَآئِنَآ إِن كُنتُمۡ صَٰدِقِينَ ٣٦

៣៦-(ពួកគេបាននិយាយទៀតថា) ដូច្នេះចូរពួកអ្នក(មូហាំ-
ម៉ាត់ និងអ្នកដែលមានជំនឿ)នាំយកជីដូនជីតារបស់ពួកយើង
ត្រឡប់មកវិញមើល! ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតមែន

១-អល់ឡោះបានប្រទាននៀកម៉ាត់ឱ្យពួកគេ តែពួកគេបែរជាប្រឆាំងនឹងអល់ឡោះ ដូច្នេះអល់ឡោះក៏ដកហូតនៀកម៉ាត់របស់ទ្រង់វិញ ។

នោះ។

៣៧-តើពួកគេ(ពួកគ្មានជំនឿគូរ៉ស្ហ) ប្រសើរជាង ឬក្រុមអំបូរ តុបបាក់(ក្រុមមួយដែលមកពីយេម៉ែន) និងអ្នកជំនាន់មុនពួកគេ ប្រសើរជាង? យើងបានបំផ្លាញពួកគេដោយសារតែពួកគេជាពួក ដែលប្រព្រឹត្តបាបកម្ម។

أَهُمْ خَيْرٌ أَمْ قَوْمُ تُبَّعٍ وَٱلَّذِينَ مِن قَبْلِهِمْۚ أَهْلَكْنَٰهُمْۖ إِنَّهُمْ كَانُواْ مُجْرِمِينَ ﴿٣٧﴾

៣៨-យើងមិនបានបង្កើតមេឃជាច្រើនជាន់ និងផែនដី ហើយ និងអ្វីៗដែលមាននៅរវាងវាទាំងពីរជាការលេងសើចឡើយ។

وَمَا خَلَقْنَا ٱلسَّمَٰوَٰتِ وَٱلْأَرْضَ وَمَا بَيْنَهُمَا لَٰعِبِينَ ﴿٣٨﴾

៣៩-ហើយយើងមិនបានបង្កើតវាទាំងពីរ ក្រៅពីការពិតនោះ ទេ។ ក៏ប៉ុន្តែពួកគេភាគច្រើនមិនដឹងឡើយ។

مَا خَلَقْنَٰهُمَآ إِلَّا بِٱلْحَقِّ وَلَٰكِنَّ أَكْثَرَهُمْ لَا يَعْلَمُونَ ﴿٣٩﴾

៤០-ពិតប្រាកដណាស់ ថ្ងៃកាត់សេចក្ដី គឺជាពេលកំណត់ជួប របស់ពួកគេទាំងអស់គ្នា។

إِنَّ يَوْمَ ٱلْفَصْلِ مِيقَٰتُهُمْ أَجْمَعِينَ ﴿٤٠﴾

៤១-គឺជាថ្ងៃដែលញាតិសន្ដានមិនអាចជួយអ្វីដល់គ្នាបានឡើយ ហើយពួកគេក៏មិនត្រូវបានគេជួយដែរ។

يَوْمَ لَا يُغْنِي مَوْلًى عَن مَّوْلًى شَيْـًٔا وَلَا هُمْ يُنصَرُونَ ﴿٤١﴾

៤២-លើកលែងតែអ្នកណាដែលអល់ឡោះបានអាណិត ស្រឡាញ់ប៉ុណ្ណោះ។ ពិតប្រាកដណាស់ ទ្រង់មហាខ្លាំងពូកែ មហា អាណិតស្រឡាញ់។

إِلَّا مَن رَّحِمَ ٱللَّهُۚ إِنَّهُۥ هُوَ ٱلْعَزِيزُ ٱلرَّحِيمُ ﴿٤٢﴾

៤៣-ពិតប្រាកដណាស់ ដើមហ្សីកគូម(ដើមឈើនៅក្នុងនរក)

إِنَّ شَجَرَتَ ٱلزَّقُّومِ ﴿٤٣﴾

៤៤-ជាចំណីសម្រាប់ពួកប្រព្រឹត្តបាបកម្មច្រើន។

طَعَامُ ٱلْأَثِيمِ ﴿٤٤﴾

៤៥-(ដែលមានកំដៅខ្លាំង)ដូចសំណកំពុងពុះនៅក្នុងពោះ។

كَٱلْمُهْلِ يَغْلِي فِي ٱلْبُطُونِ ﴿٤٥﴾

៤៦-ដូចទឹកពុះដ៏សែនក្ដៅ។

كَغَلْيِ ٱلْحَمِيمِ ﴿٤٦﴾

៤៧-ចូរពួកអ្នក(ម៉ាឡាអ៊ីកាត់)ចាប់យកគេ(អ្នកដែលប្រព្រឹត្ត អំពើបាប) ហើយទាញគេបោះទៅកណ្ដាលនរកជើហ៊ីម។

خُذُوهُ فَٱعْتِلُوهُ إِلَىٰ سَوَآءِ ٱلْجَحِيمِ ﴿٤٧﴾

៤៨-បន្ទាប់មក ចូរពួកអ្នកចាក់ទារុណកម្មអំពីទឹកដ៏សែនក្ដៅ ទៅលើក្បាលរបស់គេចុះ។

ثُمَّ صُبُّواْ فَوْقَ رَأْسِهِۦ مِنْ عَذَابِ ٱلْحَمِيمِ ﴿٤٨﴾

ذُقۡ إِنَّكَ أَنتَ ٱلۡعَزِيزُ ٱلۡكَرِيمُ ٤٩

៤៩-ចូរអ្នកភ្លក្សចុះ ពិតប្រាកដណាស់ អ្នកគឺជាជនដែលខ្លាំងពូកែ និងថ្លៃថ្នូរ(នៅក្នុងលោកិយ)។

إِنَّ هَٰذَا مَا كُنتُم بِهِۦ تَمۡتَرُونَ ٥٠

៥០-ពិតប្រាកដណាស់ នេះគឺជាអ្វី(ទារុណកម្ម)ដែលពួកអ្នកធ្លាប់សង្ស័យចំពោះវា(នៅក្នុងលោកិយ)។

إِنَّ ٱلۡمُتَّقِينَ فِي مَقَامٍ أَمِينٖ ٥١

៥១-ពិតប្រាកដណាស់ បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះវិញ គឺស្ថិតនៅកន្លែងមួយដែលមានសុវត្ថិភាពបំផុត។

فِي جَنَّٰتٖ وَعُيُونٖ ٥٢

៥២-គឺនៅក្នុងឋានសួគ៌ ហើយមានប្រភពទឹកជាច្រើន។

يَلۡبَسُونَ مِن سُندُسٖ وَإِسۡتَبۡرَقٖ مُّتَقَٰبِلِينَ ٥٣

៥៣-ពួកគេស្លៀកពាក់សូត្រដែលម៉ដ្ឋខៃ និងក្រើមដោយពួកគេអង្គុយនៅទល់មុខគ្នា។

كَذَٰلِكَ وَزَوَّجۡنَٰهُم بِحُورٍ عِينٖ ٥٤

៥៤-ដូច្នេះដែរ យើងបានរៀបអាពាហ៍ពិពាហ៍ឱ្យពួកគេជាមួយនឹងស្រីទេពអប្សរ។

يَدۡعُونَ فِيهَا بِكُلِّ فَٰكِهَةٍ ءَامِنِينَ ٥٥

៥៥-នៅក្នុងឋានសួគ៌នោះ ពួកគេអាចសុំបាននូវរាល់ប្រភេទផ្លែឈើដោយសុវត្ថិភាពបំផុត។

لَا يَذُوقُونَ فِيهَا ٱلۡمَوۡتَ إِلَّا ٱلۡمَوۡتَةَ ٱلۡأُولَىٰۖ وَوَقَىٰهُمۡ عَذَابَ ٱلۡجَحِيمِ ٥٦

៥៦-នៅក្នុងនោះដែរ ពួកគេមិនស្គាល់រសជាតិនៃការស្លាប់ក្រៅពីការស្លាប់លើកទីមួយ(នៅក្នុងលោកិយ)នោះឡើយ។ ហើយទ្រង់បានថែរក្សាពួកគេពីទារុណកម្មនៃនរកជើហ៊ីម។

فَضۡلٗا مِّن رَّبِّكَۚ ذَٰلِكَ هُوَ ٱلۡفَوۡزُ ٱلۡعَظِيمُ ٥٧

៥៧-ជាការប្រោសប្រទានពីម្ចាស់របស់អ្នក។ នោះគឺជាជោគជ័យដ៏ធំធេង។

فَإِنَّمَا يَسَّرۡنَٰهُ بِلِسَانِكَ لَعَلَّهُمۡ يَتَذَكَّرُونَ ٥٨

៥៨-ពិតប្រាកដណាស់ យើងបានសម្រួលវា(គម្ពីរគួរអាន)ជាភាសារបស់អ្នក ដើម្បីឱ្យពួកគេចងចាំ។

فَٱرۡتَقِبۡ إِنَّهُم مُّرۡتَقِبُونَ ٥٩

៥៩-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)រង់ចាំ(នូវអ្វីដែលយើងបានសន្យាចំពោះអ្នក)ចុះ ពិតប្រាកដណាស់ពួកគេក៏ជាអ្នករង់ចាំដែរ។

## سورة الجاثية

## ជំពូកអាល់ហ្ជាស៊ីយ៉ះ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-ហា មីម

២-ការបញ្ចុះគម្ពីរ(គួរអាន) នេះគឺមកពីអល់ឡោះដែលមហា ខ្លាំងពូកែ មហាគតិបណ្ឌិត ។

៣-ពិតប្រាកដណាស់ នៅលើមេឃជាច្រើនជាន់ និងផែនដីគឺជា ភស្តុតាង១សម្រាប់បណ្តាអ្នកដែលមានជំនឿ ។

៤-ហើយនៅក្នុងការបង្កើតពួកអ្នក និងសត្វទាំងឡាយ ដែល ទ្រង់ដាក់ពង្រាយ(នៅលើផែនដី) នោះ គឺជាភស្តុតាង១សម្រាប់ ក្រុមដែលមានជំនឿយ៉ាងពិតប្រាកដ ។

៥-ហើយការផ្លាស់ប្តូររវាងពេលយប់និងពេលថ្ងៃ និងលាភ សក្ការៈ(ទឹកភ្លៀង) ដែលអល់ឡោះបានបញ្ចុះពីលើមេឃ ហើយ ដោយសារវាទ្រង់បានធ្វើឱ្យដីមានជីវិតឡើងវិញបន្ទាប់ពីការស្លាប់ (គ្មានជីជាតិ) របស់វា ព្រមទាំងការផ្លាស់ប្តូរទិសរបស់ខ្យល់នោះ ជាភស្តុតាង១សម្រាប់ក្រុមដែលស្វែងយល់ ។

៦-ទាំងនោះគឺជាភស្តុតាងរបស់អល់ឡោះដែលយើងនិយាយ ប្រាប់អ្នក(មូហាំម៉ាត់) យ៉ាងពិតប្រាកដ ។ ដូច្នេះ តើមានពាក្យសំដី ណាក្រោយពីពាក្យសំដីអល់ឡោះ និងភស្តុតាង១របស់ទ្រង់ដែល ពួកគេមានជំនឿនោះ?

៧-វិនាសអន្តរាយចំពោះរាល់អ្នកដែលភូតកុហកនិងអ្នកដែល ប្រព្រឹត្តបាបកម្មច្រើន ។

៨-ដោយគេស្តាប់ឮអាយ៉ាត់១របស់អល់ឡោះដែលត្រូវបានគេ សូត្រឱ្យស្តាប់ បន្ទាប់មកគេនៅតែចចេសដោយក្រអឺតក្រទម ហាក់បី ដូចជាគេមិនបានស្តាប់ឮវាសោះ ។ ដូច្នេះចូរអ្នក(មូហាំម៉ាត់) ផ្តល់ ដំណឹងដល់គេនូវទារុណកម្មដ៏ឈឺចាប់ ។

៩-ហើយនៅពេលដែលគេបានដឹងអ្វីមួយអំពីអាយ៉ាត់១របស់ យើង គេបែរជាបានយកវាធ្វើជាការចំអកទៅវិញ ។ ពួកទាំងនោះ នឹងទទួលទារុណកម្មដ៏អាម៉ាស់ ។

حمٓ ﴿١﴾

تَنزِيلُ ٱلۡكِتَٰبِ مِنَ ٱللَّهِ ٱلۡعَزِيزِ ٱلۡحَكِيمِ ﴿٢﴾

إِنَّ فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ لَأٓيَٰتٖ
لِّلۡمُؤۡمِنِينَ ﴿٣﴾

وَفِي خَلۡقِكُمۡ وَمَا يَبُثُّ مِن دَآبَّةٍ ءَايَٰتٞ لِّقَوۡمٖ
يُوقِنُونَ ﴿٤﴾

وَٱخۡتِلَٰفِ ٱلَّيۡلِ وَٱلنَّهَارِ وَمَآ أَنزَلَ ٱللَّهُ
مِنَ ٱلسَّمَآءِ مِن رِّزۡقٖ فَأَحۡيَا بِهِ ٱلۡأَرۡضَ
بَعۡدَ مَوۡتِهَا وَتَصۡرِيفِ ٱلرِّيَٰحِ ءَايَٰتٞ لِّقَوۡمٖ
يَعۡقِلُونَ ﴿٥﴾

تِلۡكَ ءَايَٰتُ ٱللَّهِ نَتۡلُوهَا عَلَيۡكَ بِٱلۡحَقِّۖ فَبِأَيِّ
حَدِيثِۭ بَعۡدَ ٱللَّهِ وَءَايَٰتِهِۦ يُؤۡمِنُونَ ﴿٦﴾

وَيۡلٞ لِّكُلِّ أَفَّاكٍ أَثِيمٖ ﴿٧﴾

يَسۡمَعُ ءَايَٰتِ ٱللَّهِ تُتۡلَىٰ عَلَيۡهِ ثُمَّ يُصِرُّ
مُسۡتَكۡبِرٗا كَأَن لَّمۡ يَسۡمَعۡهَاۖ فَبَشِّرۡهُ بِعَذَابٍ
أَلِيمٖ ﴿٨﴾

وَإِذَا عَلِمَ مِنۡ ءَايَٰتِنَا شَيۡـًٔا ٱتَّخَذَهَا هُزُوًاۚ
أُوْلَٰٓئِكَ لَهُمۡ عَذَابٞ مُّهِينٞ ﴿٩﴾

១០-នៅខាងមុខពួកគេគឺនរកជើហាន់ណាំ ។ ហើយអ្វីដែលពួកគេបានប្រព្រឹត្ត និងអ្វីដែលពួកគេបានយកធ្វើជាអ្នកគាំពារផ្សេងពីអល់ឡោះនោះ គឺមិនអាចការពារពួកគេបានបន្តិចសោះឡើយ ។ ហើយពួកគេនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរ ។

១១-(គម្ពីរគួរអាន) នេះគឺជាការចង្អុលបង្ហាញ ។ ហើយពួកដែលប្រឆាំងនឹងអាយ៉ាត់ៗនៃម្ចាស់របស់ពួកគេនោះ ពួកគេនឹងទទួលទារុណកម្មដ៏សែនឈឺចាប់ ។

១២-អល់ឡោះជាម្ចាស់ដែលបានបង្កើតសមុទ្រជាផលប្រយោជន៍សម្រាប់ពួកអ្នកដើម្បីឱ្យសំពៅធ្វើដំណើរលើវាតាមបទបញ្ជារបស់ទ្រង់ និងដើម្បីឱ្យពួកអ្នកស្វែងរកលាភសក្ការៈរបស់ទ្រង់ ។ ហើយសង្ឃឹមថាពួកអ្នកនឹងដឹងគុណ ។

១៣-ហើយទ្រង់បានបង្កើតអ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលនៅលើផែនដីជាប្រយោជន៍សម្រាប់ពួកអ្នក ។ ទាំងអស់នេះគឺ(ជាការប្រោសប្រទាន) មកពីទ្រង់ ។ ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាភស្តុតាងៗសម្រាប់ក្រុមដែលចេះគិតពិចារណា ។

១៤-ចូរអ្នក(មូហាំម៉ាត់) ពោលទៅកាន់បណ្ដាអ្នកដែលមានជំនឿឱ្យពួកគេអធ្យាស្រ័យដល់ពួកដែលគ្មានសង្ឃឹមចំពោះផលបុណ្យរបស់អល់ឡោះ ដើម្បីទ្រង់នឹងតបស្នងចំពោះក្រុមមួយនូវអ្វីដែលពួកគេធ្លាប់បានសាង ។

១៥-អ្នកណាហើយដែលបានសាងអំពើល្អ គឺសម្រាប់ខ្លួនឯង ហើយអ្នកណាដែលបានប្រព្រឹត្តអំពើអាក្រក់វិញ គឺវានឹងធ្លាក់លើខ្លួនឯង ។ ក្រោយមកពួកអ្នកនឹងត្រូវវិលត្រឡប់ទៅកាន់ម្ចាស់របស់ពួកអ្នកវិញ ។

១៦-ហើយជាការពិតណាស់ យើងបានប្រទានគម្ពីរ(តាវរ៉ត និងអ៊ីញជីល) និងក្រមច្បាប់ ហើយនិងភាពជាណាពីដល់អំបូរអ៊ីស្រាអែល ហើយយើងបានប្រទានលាភសក្ការៈដ៏ល្អជាច្រើនដល់ពួកគេ ព្រមទាំងយើងបានលើកតម្កើងពួកគេឱ្យខ្ពង់ខ្ពស់(ជាងប្រជាជាតិនានា) លើពិភពលោក(នាសម័យនោះ) ។

مِّن وَرَآئِهِمۡ جَهَنَّمُۖ وَلَا يُغۡنِي عَنۡهُم مَّا كَسَبُواْ
شَيۡـٔٗا وَلَا مَا ٱتَّخَذُواْ مِن دُونِ ٱللَّهِ أَوۡلِيَآءَۖ
وَلَهُمۡ عَذَابٌ عَظِيمٌ ١٠

هَٰذَا هُدٗىۖ وَٱلَّذِينَ كَفَرُواْ بِـَٔايَٰتِ رَبِّهِمۡ لَهُمۡ
عَذَابٞ مِّن رِّجۡزٍ أَلِيمٌ ١١

۞ ٱللَّهُ ٱلَّذِي سَخَّرَ لَكُمُ ٱلۡبَحۡرَ لِتَجۡرِيَ
ٱلۡفُلۡكُ فِيهِ بِأَمۡرِهِۦ وَلِتَبۡتَغُواْ مِن فَضۡلِهِۦ
وَلَعَلَّكُمۡ تَشۡكُرُونَ ١٢

وَسَخَّرَ لَكُم مَّا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِ
جَمِيعٗا مِّنۡهُۚ إِنَّ فِي ذَٰلِكَ لَأٓيَٰتٖ لِّقَوۡمٖ
يَتَفَكَّرُونَ ١٣

قُل لِّلَّذِينَ ءَامَنُواْ يَغۡفِرُواْ لِلَّذِينَ لَا
يَرۡجُونَ أَيَّامَ ٱللَّهِ لِيَجۡزِيَ قَوۡمَۢا بِمَا كَانُواْ
يَكۡسِبُونَ ١٤

مَنۡ عَمِلَ صَٰلِحٗا فَلِنَفۡسِهِۦۖ وَمَنۡ أَسَآءَ
فَعَلَيۡهَاۖ ثُمَّ إِلَىٰ رَبِّكُمۡ تُرۡجَعُونَ ١٥

وَلَقَدۡ ءَاتَيۡنَا بَنِيٓ إِسۡرَٰٓءِيلَ ٱلۡكِتَٰبَ وَٱلۡحُكۡمَ
وَٱلنُّبُوَّةَ وَرَزَقۡنَٰهُم مِّنَ ٱلطَّيِّبَٰتِ وَفَضَّلۡنَٰهُمۡ
عَلَى ٱلۡعَٰلَمِينَ ١٦

១៧-ហើយយើងបានផ្ដល់ឱ្យពួកគេនូវក្រមច្បាប់ជាច្រើនយ៉ាងច្បាស់លាស់(អំពីរឿងសាសនា)។ ហើយពួកគេមិនបានខ្វែងគំនិតគ្នាឡើយ លើកលែងតែបន្ទាប់ពីចំណេះដឹងបានមកដល់ពួកគេដោយសារតែភាពឈ្នានីសរវាងពួកគេ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នក(មូហាំម៉ាត់)នឹងកាត់សេចក្ដីរវាងពួកគេនៅថ្ងៃបរលោកចំពោះអ្វីដែលពួកគេធ្លាប់បានខ្វែងគំនិតគ្នាអំពីវា។

១៨-ក្រោយមកយើងបានធ្វើឱ្យអ្នក(មូហាំម៉ាត់)ស្ថិតនៅលើមាគ៌ានៃសាសនាដ៏ពិតមួយ។ ដូច្នេះ ចូរអ្នកដើរតាមវាចុះ ហើយចូរអ្នកកុំធ្វើតាមចំណង់របស់ពួកដែលគ្មានចំណេះដឹងឱ្យសោះ។

១៩-ពិតប្រាកដណាស់ ពួកគេមិនអាចការពារអ្នកពី(ទារុណកម្ម)អល់ឡោះបានបន្តិចណាឡើយ។ ហើយពិតប្រាកដណាស់ ពួកដែលបំពានយកគ្នារបស់ពួកគេធ្វើជាអ្នកគាំពារទៅវិញទៅមក។ ហើយអល់ឡោះ គឺជាអ្នកគាំពារបណ្ដាអ្នកដែលកោតខ្លាចទ្រង់។

២០-(គម្ពីរគួរអាន)នេះគឺជាការឆ្លុះបញ្ចាំងដ៏ច្បាស់លាស់សម្រាប់មនុស្សលោក និងជាការចង្អុលបង្ហាញ ហើយនិងជាក្ដីមេត្តាករុណាសម្រាប់ក្រុមដែលមានជំនឿពិតប្រាកដ។

២១-តើពួកដែលបានប្រព្រឹត្តអំពើអាក្រក់ទាំងឡាយគិតថា: យើងនឹងចាត់ទុកពួកគេដូចបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវនោះស្មើភាពគ្នាក្នុងការរស់នៅរបស់ពួកគេ និងការស្លាប់របស់ពួកគេឬ? អ្វីដែលពួកគេវិនិច្ឆ័យនេះគឺអាក្រក់បំផុត។

២២-ហើយអល់ឡោះបានបង្កើតមេឃជាច្រើនជាន់ និងផែនដី(ដោយមានគោលបំណង)យ៉ាងពិតប្រាកដ និងដើម្បីគេនឹងតបស្នងដល់បុគ្គលគ្រប់រូបតាមអ្វីដែលគេបានសាង ដោយពួកគេមិនត្រូវរគេបំពានឡើយ។

២៣-តើអ្នក(មូហាំម៉ាត់)បានឃើញដែរឬទេ អ្នកដែលយកចំណង់របស់ខ្លួនធ្វើជាម្ចាស់របស់គេ ហើយអល់ឡោះបានធ្វើឱ្យគេវង្វេងទៅតាមការចេះដឹងរបស់គេ(ដែលគេដឹងពីការពិតតែជ្រើស

وَءَاتَيۡنَٰهُم بَيِّنَٰتٖ مِّنَ ٱلۡأَمۡرِۖ فَمَا ٱخۡتَلَفُوٓاْ إِلَّا
مِنۢ بَعۡدِ مَا جَآءَهُمُ ٱلۡعِلۡمُ بَغۡيَۢا بَيۡنَهُمۡۚ إِنَّ
رَبَّكَ يَقۡضِي بَيۡنَهُمۡ يَوۡمَ ٱلۡقِيَٰمَةِ فِيمَا كَانُواْ
فِيهِ يَخۡتَلِفُونَ ﴿١٧﴾

ثُمَّ جَعَلۡنَٰكَ عَلَىٰ شَرِيعَةٖ مِّنَ ٱلۡأَمۡرِ فَٱتَّبِعۡهَا
وَلَا تَتَّبِعۡ أَهۡوَآءَ ٱلَّذِينَ لَا يَعۡلَمُونَ ﴿١٨﴾

إِنَّهُمۡ لَن يُغۡنُواْ عَنكَ مِنَ ٱللَّهِ شَيۡـٔٗاۚ وَإِنَّ
ٱلظَّٰلِمِينَ بَعۡضُهُمۡ أَوۡلِيَآءُ بَعۡضٖۖ وَٱللَّهُ وَلِيُّ
ٱلۡمُتَّقِينَ ﴿١٩﴾

هَٰذَا بَصَٰٓئِرُ لِلنَّاسِ وَهُدٗى وَرَحۡمَةٞ لِّقَوۡمٖ
يُوقِنُونَ ﴿٢٠﴾

أَمۡ حَسِبَ ٱلَّذِينَ ٱجۡتَرَحُواْ ٱلسَّيِّـَٔاتِ
أَن نَّجۡعَلَهُمۡ كَٱلَّذِينَ ءَامَنُواْ وَعَمِلُواْ
ٱلصَّٰلِحَٰتِ سَوَآءٗ مَّحۡيَاهُمۡ وَمَمَاتُهُمۡۚ
سَآءَ مَا يَحۡكُمُونَ ﴿٢١﴾

وَخَلَقَ ٱللَّهُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ بِٱلۡحَقِّ
وَلِتُجۡزَىٰ كُلُّ نَفۡسِۭ بِمَا كَسَبَتۡ وَهُمۡ لَا
يُظۡلَمُونَ ﴿٢٢﴾

أَفَرَءَيۡتَ مَنِ ٱتَّخَذَ إِلَٰهَهُۥ هَوَىٰهُ وَأَضَلَّهُ ٱللَّهُ
عَلَىٰ عِلۡمٖ وَخَتَمَ عَلَىٰ سَمۡعِهِۦ وَقَلۡبِهِۦ وَجَعَلَ

عَلَىٰ بَصَرِهِۦ غِشَٰوَةً فَمَن يَهۡدِيهِ مِنۢ بَعۡدِ ٱللَّهِۚ
أَفَلَا تَذَكَّرُونَ ﴿٢٣﴾

រើសយកប្រការវង្វេង) ហើយទ្រង់បានបិទត្រចៀក និងចិត្តរបស់គេ ព្រមទាំងធ្វើឱ្យភ្នែករបស់គេមានរនាំងបិទបាំងយ៉ាងជិតនោះ? ដូច្នេះ តើមានអ្នកណាដែលអាចចង្អុលបង្ហាញដល់គេបន្ទាប់ពីអល់ឡោះ (ធ្វើឱ្យគេវង្វេង)នោះ? តើពួកអ្នកមិនគិតពិចារណាទេឬ?

وَقَالُواْ مَا هِيَ إِلَّا حَيَاتُنَا ٱلدُّنۡيَا نَمُوتُ
وَنَحۡيَا وَمَا يُهۡلِكُنَآ إِلَّا ٱلدَّهۡرُۚ وَمَا لَهُم بِذَٰلِكَ
مِنۡ عِلۡمٍۖ إِنۡ هُمۡ إِلَّا يَظُنُّونَ ﴿٢٤﴾

២៤-ហើយពួកគេ(ពួកមូស្ហរីគីន)បាននិយាយថា: វាគ្មានអ្វីក្រៅពីជីវិតរស់នៅរបស់ពួកយើងនៅលើលោកិយនេះឡើយ ពួកយើងស្លាប់ ហើយពួកយើងរស់។ ហើយគ្មានអ្វីមកបំផ្លាញពួកយើងក្រៅពីពេលវេលានោះទេ។ ហើយពួកគេគ្មានចំណេះដឹងក្នុងរឿងនោះឡើយ ពួកគេគ្រាន់តែស្មានប៉ុណ្ណោះ។

وَإِذَا تُتۡلَىٰ عَلَيۡهِمۡ ءَايَٰتُنَا بَيِّنَٰتٖ مَّا كَانَ
حُجَّتَهُمۡ إِلَّآ أَن قَالُواْ ٱئۡتُواْ بِـَٔابَآئِنَآ إِن كُنتُمۡ
صَٰدِقِينَ ﴿٢٥﴾

២៥-ហើយនៅពេលដែលគេសូត្រនូវអាយ៉ាត់ៗដ៏ច្បាស់លាស់របស់យើងឱ្យពួកគេស្តាប់ ពេលនោះការអះអាងរបស់ពួកគេគ្មានអ្វីក្រៅពីនិយាយថា: ចូរពួកអ្នក(មូហាំម៉ាត់ និងអ្នកមានជំនឿ)នាំជីដូនជីតារបស់ពួកយើង(ដែលបានស្លាប់)ឱ្យត្រឡប់មកវិញមើល ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតនោះ។

قُلِ ٱللَّهُ يُحۡيِيكُمۡ ثُمَّ يُمِيتُكُمۡ ثُمَّ يَجۡمَعُكُمۡ إِلَىٰ
يَوۡمِ ٱلۡقِيَٰمَةِ لَا رَيۡبَ فِيهِ وَلَٰكِنَّ أَكۡثَرَ
ٱلنَّاسِ لَا يَعۡلَمُونَ ﴿٢٦﴾

២៦-ចូរអ្នកពោលថា: អល់ឡោះគឺជាអ្នកដែលធ្វើឱ្យពួកអ្នករស់ បន្ទាប់មកធ្វើឱ្យពួកអ្នកស្លាប់ បន្ទាប់មកទៀត ទ្រង់នឹងប្រមូលផ្តុំពួកអ្នកទៅកាន់ថ្ងៃបរលោកដោយគ្មានមន្ទិលសង្ស័យចំពោះវាឡើយ។ ក៏ប៉ុន្តែមនុស្សលោកភាគច្រើនមិនដឹងឡើយ។

وَلِلَّهِ مُلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ وَيَوۡمَ تَقُومُ
ٱلسَّاعَةُ يَوۡمَئِذٖ يَخۡسَرُ ٱلۡمُبۡطِلُونَ ﴿٢٧﴾

២៧-ហើយការគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ហើយនៅពេលដែលថ្ងៃបរលោកកើតឡើង នៅថ្ងៃនោះពួកដែលអនុវត្តតាមប្រការមិនត្រឹមត្រូវនឹងខាតបង់។

وَتَرَىٰ كُلَّ أُمَّةٖ جَاثِيَةٗۚ كُلُّ أُمَّةٖ تُدۡعَىٰٓ إِلَىٰ
كِتَٰبِهَا ٱلۡيَوۡمَ تُجۡزَوۡنَ مَا كُنتُمۡ تَعۡمَلُونَ ﴿٢٨﴾

២៨-ហើយអ្នក(មូហាំម៉ាត់)នឹងឃើញរាល់ប្រជាជាតិទាំងអស់លុតជង្គង់ក្រាប(រង់ចាំការកាត់ក្តី)។ រាល់ប្រជាជាតិទាំងនោះនឹងត្រូវគេហៅទៅកាន់សៀវភៅកំណត់ហេតុរបស់ពួកគេ។ នៅថ្ងៃនោះពួកអ្នកនឹងត្រូវគេតបស្នងនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត។

هَٰذَا كِتَٰبُنَا يَنطِقُ عَلَيۡكُم بِٱلۡحَقِّۚ إِنَّا كُنَّا
نَسۡتَنسِخُ مَا كُنتُمۡ تَعۡمَلُونَ ﴿٢٩﴾

២៩-នេះគឺជាសៀវភៅកំណត់ហេតុរបស់យើងដែលនិយាយអំពីពួកអ្នកដោយយុត្តិធម៌។ ពិតប្រាកដណាស់ យើងបានកត់ត្រាទុកនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត។

فَأَمَّا ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ
فَيُدۡخِلُهُمۡ رَبُّهُمۡ فِي رَحۡمَتِهِۦۚ ذَٰلِكَ هُوَ ٱلۡفَوۡزُ
ٱلۡمُبِينُ ٣٠

៣០-ចំណែកឯបណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ ម្ចាស់របស់ពួកគេនឹងបញ្ចូលពួកគេទៅក្នុងក្តីមេត្តាករុណារបស់ទ្រង់ ។ នោះគឺជាជោគជ័យយ៉ាងច្បាស់លាស់ ។

وَأَمَّا ٱلَّذِينَ كَفَرُوٓاْ أَفَلَمۡ تَكُنۡ ءَايَٰتِي
تُتۡلَىٰ عَلَيۡكُمۡ فَٱسۡتَكۡبَرۡتُمۡ وَكُنتُمۡ قَوۡمٗا
مُّجۡرِمِينَ ٣١

៣១-រីឯពួកដែលប្រឆាំងវិញ ( មានគេសួរទៅកាន់ពួកគេថា) តើអាយ៉ាត់ៗរបស់យើងមិនត្រូវបានគេសូត្រឱ្យពួកអ្នកស្តាប់ទេឬ? ហើយពួកអ្នកបានក្រអឺតក្រទម និងជាក្រុមដែលធ្លាប់ប្រព្រឹត្តបាបកម្មទៀតផង ។

وَإِذَا قِيلَ إِنَّ وَعۡدَ ٱللَّهِ حَقّٞ وَٱلسَّاعَةُ لَا رَيۡبَ
فِيهَا قُلۡتُم مَّا نَدۡرِي مَا ٱلسَّاعَةُ إِن نَّظُنُّ إِلَّا
ظَنّٗا وَمَا نَحۡنُ بِمُسۡتَيۡقِنِينَ ٣٢

៣២-ហើយនៅពេលដែលមានគេនិយាយថា: ពិតប្រាកដណាស់ការសន្យារបស់អល់ឡោះគឺជាការពិត ហើយកាលកំណត់នៃថ្ងៃបរលោកគ្មានមន្ទិលសង្ស័យអំពីវាឡើយ តែពួកអ្នកបែរជានិយាយថា: ពួកយើងមិនដឹងទេ អ្វីទៅជាកាលកំណត់នៃថ្ងៃបរលោកនោះ? ហើយពួកយើងមិនគិត( ថាវានឹងកើតឡើង) ក្រៅពីការស្មាននោះឡើយ ហើយពួកយើងក៏មិនជឿជាក់ដែរ ។

وَبَدَا لَهُمۡ سَيِّـَٔاتُ مَا عَمِلُواْ وَحَاقَ بِهِم مَّا
كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ٣٣

៣៣-ហើយអំពើអាក្រក់ទាំងឡាយដែលពួកគេបានប្រព្រឹត្តនោះ បានលាតត្រដាងចំពោះពួកគេ ហើយអ្វី( ទារុណកម្ម) ដែលពួកគេធ្លាប់បានសើចចំអកនឹងវាបានរុំព័ទ្ធពួកគេ ។

وَقِيلَ ٱلۡيَوۡمَ نَنسَىٰكُمۡ كَمَا نَسِيتُمۡ لِقَآءَ يَوۡمِكُمۡ
هَٰذَا وَمَأۡوَىٰكُمُ ٱلنَّارُ وَمَا لَكُم
مِّن نَّٰصِرِينَ ٣٤

៣៤-ហើយមានគេនិយាយ( ទៅកាន់ពួកគេ) ថា: ថ្ងៃនេះយើងបំភ្លេចពួកអ្នក ដូចដែលពួកអ្នកបានបំភ្លេចនូវជំនួបថ្ងៃរបស់ពួកអ្នកនេះដែរ ។ ហើយទីជម្រករបស់ពួកអ្នកគឺនរក ។ ហើយពួកអ្នកគ្មានអ្នកណាជួយឡើយ ។

ذَٰلِكُم بِأَنَّكُمُ ٱتَّخَذۡتُمۡ ءَايَٰتِ ٱللَّهِ هُزُوٗا
وَغَرَّتۡكُمُ ٱلۡحَيَوٰةُ ٱلدُّنۡيَاۚ فَٱلۡيَوۡمَ لَا يُخۡرَجُونَ
مِنۡهَا وَلَا هُمۡ يُسۡتَعۡتَبُونَ ٣٥

៣៥-ទាំងនោះ ដោយសារតែពួកអ្នកបានយកអាយ៉ាត់ៗរបស់អល់ឡោះធ្វើជាការសើចចំអក ។ ហើយជីវិតលោកិយបានបោកប្រាស់ពួកអ្នក ។ ដូច្នេះ ថ្ងៃនេះពួកគេមិនត្រូវគេបញ្ចេញពីនរកឡើយ ហើយពួកគេក៏មិនត្រូវគេផ្តល់ឱកាសឱ្យត្រឡប់ទៅសារភាពទោសកំហុសដែរ ។

فَلِلَّهِ ٱلۡحَمۡدُ رَبِّ ٱلسَّمَٰوَٰتِ وَرَبِّ ٱلۡأَرۡضِ

៣៦-រាល់ការសរសើរទាំងឡាយគឺចំពោះអល់ឡោះដែលជាម្ចាស់គ្រប់គ្រងមេឃជាច្រើនជាន់ និងជាម្ចាស់គ្រប់គ្រងផែនដី

ហើយនិងជាម្ចាស់គ្រប់គ្រងពិភពទាំងអស់។

رَبِّ ٱلۡعَٰلَمِينَ ٣٦

៣៧-ហើយភាពឧត្តុង្គឧត្តមនៅលើមេឃជាច្រើនជាន់ និងផែនដី គឺជាកម្មសិទ្ធិរបស់ទ្រង់តែមួយគត់។ ហើយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត។

وَلَهُ ٱلۡكِبۡرِيَآءُ فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ وَهُوَ ٱلۡعَزِيزُ ٱلۡحَكِيمُ ٣٧

## ជំពូកអាល់អះកហ្វ

## سورة الأحقاف

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-ហា មីម។

حمٓ ١

២-ការបញ្ចុះគម្ពីរ(គួរអាន)នេះគឺមកពីអល់ឡោះដែលមហាខ្លាំងពូកែ មហាគតិបណ្ឌិត។

تَنزِيلُ ٱلۡكِتَٰبِ مِنَ ٱللَّهِ ٱلۡعَزِيزِ ٱلۡحَكِيمِ ٢

៣-យើងមិនបានបង្កើតមេឃជាច្រើនជាន់ និងផែនដី ហើយនិងអ្វីៗដែលនៅរវាងវាទាំងពីរក្រៅពីការពិត និងមានរយៈពេលមួយដែលបានកំណត់ឡើយ។ ហើយពួកដែលប្រឆាំងគឺជាពួកដែលបែរចេញពីអ្វីដែលគេបានដាស់តឿនព្រមានពួកគេ។

مَا خَلَقۡنَا ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَ وَمَا بَيۡنَهُمَآ إِلَّا بِٱلۡحَقِّ وَأَجَلٖ مُّسَمّٗىۚ وَٱلَّذِينَ كَفَرُواْ عَمَّآ أُنذِرُواْ مُعۡرِضُونَ ٣

៤-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ តើពួកអ្នកយល់ឃើញយ៉ាងដូចម្ដេចចំពោះអ្វីដែលពួកអ្នកបានបួងសួងសុំផ្សេងពីអល់ឡោះនោះ? ចូរពួកអ្នកបង្ហាញឱ្យខ្ញុំឃើញមើលតើផ្នែកណាមួយនៃផែនដីដែលពួកគេបានបង្កើត ឬមួយពួកគេមានការរួមចំណែក(ជាមួយអល់ឡោះ)ក្នុងការបង្កើតមេឃជាច្រើនជាន់? ចូរពួកអ្នកនាំមកឱ្យខ្ញុំនូវគម្ពីរមុនគម្ពីរ(គួរអាន)នេះ ឬក៏ចំណេះដឹងដែលសេសសល់(ពីអ្នកជំនាន់មុន) ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតនោះ។

قُلۡ أَرَءَيۡتُم مَّا تَدۡعُونَ مِن دُونِ ٱللَّهِ أَرُونِي مَاذَا خَلَقُواْ مِنَ ٱلۡأَرۡضِ أَمۡ لَهُمۡ شِرۡكٞ فِي ٱلسَّمَٰوَٰتِۖ ٱئۡتُونِي بِكِتَٰبٖ مِّن قَبۡلِ هَٰذَآ أَوۡ أَثَٰرَةٖ مِّنۡ عِلۡمٍ إِن كُنتُمۡ صَٰدِقِينَ ٤

៥-ហើយអ្នកណាដែលវង្វេងជាងអ្នកដែលបួងសួងសុំ(ព្រះនានា)ក្រៅពីអល់ឡោះដែលវាមិនអាចទទួលនូវការបួងសួងសុំរបស់គេរហូតដល់ថ្ងៃបរលោកដោយពួកវា(ព្រះនានា)មិនដឹងនូវការបួងសួងរបស់ពួកគេនោះ?

وَمَنۡ أَضَلُّ مِمَّن يَدۡعُواْ مِن دُونِ ٱللَّهِ مَن لَّا يَسۡتَجِيبُ لَهُۥٓ إِلَىٰ يَوۡمِ ٱلۡقِيَٰمَةِ وَهُمۡ عَن دُعَآئِهِمۡ غَٰفِلُونَ ٥

៦-ហើយនៅពេលដែលមនុស្សលោកត្រូវបានគេប្រមូលផ្ដុំ(នៅថ្ងៃបរលោក) ពួកវាបានក្លាយជាសត្រូវរបស់ពួកគេ ហើយពួកវាបានបដិសេធនឹងការគោរពសក្ការៈរបស់ពួកគេ។

وَإِذَا حُشِرَ ٱلنَّاسُ كَانُواْ لَهُمۡ أَعۡدَآءٗ وَكَانُواْ بِعِبَادَتِهِمۡ كَٰفِرِينَ ٦

وَإِذَا تُتۡلَىٰ عَلَيۡهِمۡ ءَايَٰتُنَا بَيِّنَٰتٖ قَالَ
ٱلَّذِينَ كَفَرُواْ لِلۡحَقِّ لَمَّا جَآءَهُمۡ هَٰذَا
سِحۡرٞ مُّبِينٌ ٧

៧-ហើយនៅពេលដែលអាយ៉ាត់ៗដ៏ច្បាស់លាស់របស់យើងត្រូវបានគេសូត្រឱ្យពួកគេស្ដាប់ ពួកដែលបានបដិសេធនឹងការពិត (គម្ពីរគួរអាន) នៅពេលដែលវាបានមកដល់ពួកគេបាននិយាយថាៈ នេះគឺជាមន្តអាគមដ៏ច្បាស់លាស់ ។

أَمۡ يَقُولُونَ ٱفۡتَرَىٰهُۖ قُلۡ إِنِ ٱفۡتَرَيۡتُهُۥ فَلَا
تَمۡلِكُونَ لِي مِنَ ٱللَّهِ شَيۡـًٔاۖ هُوَ أَعۡلَمُ بِمَا
تُفِيضُونَ فِيهِۖ كَفَىٰ بِهِۦ شَهِيدَۢا بَيۡنِي وَبَيۡنَكُمۡۖ
وَهُوَ ٱلۡغَفُورُ ٱلرَّحِيمُ ٨

៨-ផ្ទុយទៅវិញពួកគេនិយាយថាៈ គេ(មូហាំម៉ាត់)បានប្រឌិតវា(គម្ពីរគួរអាន)ឡើង ។ ចូរអ្នកពោលថាៈ ប្រសិនបើខ្ញុំប្រឌិតវាមែននោះ ពួកអ្នកគ្មានលទ្ធភាពអ្វីជួយការពារខ្ញុំពី(ទារុណកម្ម) អល់ឡោះបានឡើយ ។ ទ្រង់ដឹងបំផុតនូវអ្វីដែលពួកអ្នកនិយាយអំពីវា ។ គ្រប់គ្រាន់ហើយដែលទ្រង់ជាសាក្សីរវាងខ្ញុំ និងពួកអ្នក ។ ហើយទ្រង់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

قُلۡ مَا كُنتُ بِدۡعٗا مِّنَ ٱلرُّسُلِ وَمَآ أَدۡرِي مَا
يُفۡعَلُ بِي وَلَا بِكُمۡۖ إِنۡ أَتَّبِعُ إِلَّا مَا يُوحَىٰٓ إِلَيَّ
وَمَآ أَنَا۠ إِلَّا نَذِيرٞ مُّبِينٞ ٩

៩-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ខ្ញុំមិនមែនជាអ្នកដំបូងគេក្នុងចំណោមអ្នកនាំសារទាំងឡាយនោះឡើយ ហើយខ្ញុំក៏មិនដឹងដែរថាអ្វីទៅដែលគេនឹងធ្វើមកចំពោះខ្ញុំ និងចំពោះពួកអ្នកនោះ ។ ខ្ញុំមិនធ្វើតាមក្រៅពីអ្វីដែលគេបានផ្តល់វ៉ាហ៊ីមកឱ្យខ្ញុំនោះឡើយ ។ ហើយខ្ញុំក៏មិនមែនជាអ្វីក្រៅពីជាអ្នកដាស់តឿនព្រមានដ៏ច្បាស់លាស់នោះដែរ ។

قُلۡ أَرَءَيۡتُمۡ إِن كَانَ مِنۡ عِندِ ٱللَّهِ وَكَفَرۡتُم بِهِۦ
وَشَهِدَ شَاهِدٞ مِّنۢ بَنِيٓ إِسۡرَٰٓءِيلَ عَلَىٰ مِثۡلِهِۦ
فَـَٔامَنَ وَٱسۡتَكۡبَرۡتُمۡۖ إِنَّ ٱللَّهَ لَا يَهۡدِي ٱلۡقَوۡمَ
ٱلظَّٰلِمِينَ ١٠

១០-ចូរអ្នកពោលថាៈ តើពួកអ្នកយល់ឃើញយ៉ាងដូចម្ដេចដែរ ប្រសិនបើវា(គម្ពីរគួរអាន)មកពីអល់ឡោះ ហើយពួកអ្នកបានបដិសេធនឹងវានោះ? ហើយមានសាក្សីម្នាក់ក្នុងចំណោមអំបូរអ៊ីស្រាអែលបានអះអាងទទួលស្គាល់វាដូច្នោះដែរ រួចគេក៏បានជឿ តែពួកអ្នកបែរជាក្រអឺតក្រទមទៅវិញ ។ ពិតប្រាកដណាស់ អល់ឡោះមិនចង្អុលបង្ហាញដល់ក្រុមដែលបំពានឡើយ ។

وَقَالَ ٱلَّذِينَ كَفَرُواْ لِلَّذِينَ ءَامَنُواْ لَوۡ كَانَ
خَيۡرٗا مَّا سَبَقُونَآ إِلَيۡهِۚ وَإِذۡ لَمۡ يَهۡتَدُواْ بِهِۦ
فَسَيَقُولُونَ هَٰذَآ إِفۡكٞ قَدِيمٞ ١١

១១-ហើយពួកដែលគ្មានជំនឿបាននិយាយទៅកាន់បណ្ដាអ្នកដែលមានជំនឿថាៈ ប្រសិនបើវា(គម្ពីរគួរអាន)ជាប្រការដែលល្អប្រសើរមែននោះ ពួកគេមិនអាចមានជំនឿលើវាមុនពួកយើងឡើយ ។ ហើយនៅពេលដែលពួកគេពុំទាន់មានការចង្អុលបង្ហាញពីវាទេនោះ ពួកគេនឹងនិយាយថាៈ នេះគឺជារឿងភូតកុហកជាយូរណាស់មកហើយ ។

១២-ហើយពីមុនវា(គម្ពីរគួរអាន) មានគម្ពីរមួយរបស់មូសា (តាវរ៉ត) ជាការដឹកនាំ និងជាក្ដីមេត្តាករុណា ។ ហើយនេះ(គម្ពីរគួរអាន) គឺជាគម្ពីរដែលបញ្ជាក់(ពីគម្ពីរមុនៗ) ជាភាសាអារ៉ាប់ ដើម្បីដាស់តឿនព្រមានដល់ពួកដែលបំពាន និងជាដំណឹងរីករាយសម្រាប់បណ្ដាអ្នកដែលសាងអំពើល្អ ។

وَمِن قَبۡلِهِۦ كِتَٰبُ مُوسَىٰٓ إِمَامٗا وَرَحۡمَةٗۚ
وَهَٰذَا كِتَٰبٞ مُّصَدِّقٞ لِّسَانًا عَرَبِيّٗا لِّيُنذِرَ
ٱلَّذِينَ ظَلَمُواْ وَبُشۡرَىٰ لِلۡمُحۡسِنِينَ ١٢

១៣-ពិតប្រាកដណាស់ បណ្ដាអ្នកដែលបាននិយាយថា: ម្ចាស់របស់ពួកយើងគឺអល់ឡោះ បន្ទាប់មកពួកគេបានប្រកាន់យ៉ាងខ្ជាប់ខ្ជួន(នូវគោលជំហរ) នោះ គឺគ្មានការភ័យខ្លាចចំពោះពួកគេឡើយ ហើយពួកគេក៏គ្មានទុក្ខព្រួយដែរ ។

إِنَّ ٱلَّذِينَ قَالُواْ رَبُّنَا ٱللَّهُ ثُمَّ ٱسۡتَقَٰمُواْ فَلَا
خَوۡفٌ عَلَيۡهِمۡ وَلَا هُمۡ يَحۡزَنُونَ ١٣

១៤-អ្នកទាំងនោះគឺជាអ្នកឋានសួគ៌ ដោយពួកគេស្ថិតនៅទីនោះជាអមតៈ ជាការតបស្នងនូវអ្វីដែលពួកគេបានសាង ។

أُوْلَٰٓئِكَ أَصۡحَٰبُ ٱلۡجَنَّةِ خَٰلِدِينَ فِيهَا جَزَآءَۢ بِمَا
كَانُواْ يَعۡمَلُونَ ١٤

១៥-ហើយយើងបានណែនាំមនុស្សលោកឱ្យធ្វើល្អចំពោះឪពុកម្ដាយរបស់គេ ។ ម្ដាយរបស់គេបានពពោះគេដោយលំបាក និងបានប្រសូតគេដោយលំបាកបំផុត ។ ហើយការពពោះគេ និងការឈប់បំបៅគេគឺមានរយៈពេលសាមសិបខែ ។ លុះនៅពេលដែលគេធំដឹងក្ដី និងនៅពេលដែលគេគ្រប់អាយុសែសិបឆ្នាំ គេបានបួងសួងសុំថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាធ្វើឱ្យខ្ញុំចេះដឹងគុណចំពោះនៀកម៉ាត់របស់ទ្រង់ដែលទ្រង់បានប្រទានមកលើរូបខ្ញុំ និងទៅលើឪពុកម្ដាយរបស់ខ្ញុំ និងដើម្បីឱ្យខ្ញុំធ្វើអំពើល្អត្រឹមត្រូវដែលទ្រង់ពេញចិត្តវា ហើយសូមទ្រង់មេត្តាជួយកែលំអរូបខ្ញុំនៅក្នុងវង្សត្រកូលរបស់ខ្ញុំផង ។ ពិតប្រាកដណាស់ ខ្ញុំបានសារភាពទោសកំហុសចំពោះទ្រង់ (ដែលខ្ញុំបានសាងកន្លងមក) ហើយពិតប្រាកដណាស់ ខ្ញុំស្ថិតក្នុងចំណោមអ្នកដែលប្រគល់ខ្លួនចំពោះទ្រង់ ។

وَوَصَّيۡنَا ٱلۡإِنسَٰنَ بِوَٰلِدَيۡهِ إِحۡسَٰنًاۖ حَمَلَتۡهُ
أُمُّهُۥ كُرۡهٗا وَوَضَعَتۡهُ كُرۡهٗاۖ وَحَمۡلُهُۥ وَفِصَٰلُهُۥ
ثَلَٰثُونَ شَهۡرًاۚ حَتَّىٰٓ إِذَا بَلَغَ أَشُدَّهُۥ وَبَلَغَ
أَرۡبَعِينَ سَنَةٗ قَالَ رَبِّ أَوۡزِعۡنِيٓ أَنۡ أَشۡكُرَ
نِعۡمَتَكَ ٱلَّتِيٓ أَنۡعَمۡتَ عَلَيَّ وَعَلَىٰ وَٰلِدَيَّ وَأَنۡ
أَعۡمَلَ صَٰلِحٗا تَرۡضَىٰهُ وَأَصۡلِحۡ لِي فِي ذُرِّيَّتِيٓۖ
إِنِّي تُبۡتُ إِلَيۡكَ وَإِنِّي مِنَ ٱلۡمُسۡلِمِينَ ١٥

១៦-អ្នកទាំងនោះហើយ ដែលយើងទទួលយកពីពួកគេនូវអំពើល្អដែលពួកគេបានសាង និងលុបបំបាត់នូវអំពើអាក្រក់ទាំងឡាយរបស់ពួកគេ ។ (ពួកគេ) ស្ថិតនៅក្នុងចំណោមអ្នកឋានសួគ៌ ។ គឺជាការសន្យាដ៏ពិតប្រាកដដែលពួកគេត្រូវបានគេសន្យា ។

أُوْلَٰٓئِكَ ٱلَّذِينَ نَتَقَبَّلُ عَنۡهُمۡ أَحۡسَنَ مَا عَمِلُواْ
وَنَتَجَاوَزُ عَن سَيِّـَٔاتِهِمۡ فِيٓ أَصۡحَٰبِ ٱلۡجَنَّةِۖ
وَعۡدَ ٱلصِّدۡقِ ٱلَّذِي كَانُواْ يُوعَدُونَ ١٦

وَٱلَّذِى قَالَ لِوَٰلِدَيۡهِ أُفّٖ لَّكُمَآ أَتَعِدَانِنِيٓ أَنۡ أُخۡرَجَ وَقَدۡ خَلَتِ ٱلۡقُرُونُ مِن قَبۡلِي وَهُمَا يَسۡتَغِيثَانِ ٱللَّهَ وَيۡلَكَ ءَامِنۡ إِنَّ وَعۡدَ ٱللَّهِ حَقّٞ فَيَقُولُ مَا هَٰذَآ إِلَّآ أَسَٰطِيرُ ٱلۡأَوَّلِينَ ﴿١٧﴾

១៧-ហើយអ្នកដែលបាននិយាយទៅកាន់ឪពុកម្ដាយរបស់គេថាៈ ហ៊ឺអ្នកទាំងពីរ! តើអ្នកទាំងពីរសន្យាជាមួយខ្ញុំថា គេនឹងបញ្ចេញខ្ញុំ(ពីផ្នូរ)មកវិញយ៉ាងណាទៅ ខណៈដែលមនុស្សជំនាន់មុនៗខ្ញុំបានកន្លងផុតទៅជាច្រើនមកហើយ(មិនត្រូវបញ្ចេញផង)នោះ? ពេលនោះគាត់ទាំងពីរ(ឪពុកម្ដាយ)បួងសួងសុំពីអល់ឡោះឱ្យជួយ(ដោយនិយាយទៅកាន់កូនថា)ចង្រៃហើយឯង! ចូរឯងជឿជាក់ចុះ ពិតប្រាកដណាស់ ការសន្យារបស់អល់ឡោះគឺជាការពិត។ ពេលនោះគេ(កូន)ក៏និយាយថាៈ នេះគឺគ្មានអ្វីក្រៅពីរឿងនិទានរបស់អ្នកជំនាន់មុននោះឡើយ។

أُوْلَٰٓئِكَ ٱلَّذِينَ حَقَّ عَلَيۡهِمُ ٱلۡقَوۡلُ فِيٓ أُمَمٖ قَدۡ خَلَتۡ مِن قَبۡلِهِم مِّنَ ٱلۡجِنِّ وَٱلۡإِنسِۖ إِنَّهُمۡ كَانُواْ خَٰسِرِينَ ﴿١٨﴾

១៨-ពួកទាំងនោះហើយដែលទារុណកម្មត្រូវធ្លាក់លើពួកគេជាមួយនឹងប្រជាជាតិដែលបានកន្លងផុតទៅមុនពួកគេអំពីជិន និងមនុស្សលោក។ ពិតប្រាកដណាស់ ពួកគេគឺជាពួកដែលខាតបង់ ។

وَلِكُلّٖ دَرَجَٰتٞ مِّمَّا عَمِلُواْۖ وَلِيُوَفِّيَهُمۡ أَعۡمَٰلَهُمۡ وَهُمۡ لَا يُظۡلَمُونَ ﴿١٩﴾

១៩-ហើយរាល់ៗក្រុមមានឋានៈជាច្រើនទៅតាមអ្វីដែលពួកគេបានសាង និងដើម្បីទ្រង់នឹងតបស្នងឱ្យពួកគេនូវទង្វើទាំងឡាយរបស់ពួកគេដោយពួកគេនឹងមិនត្រូវគេបំពានឡើយ។

وَيَوۡمَ يُعۡرَضُ ٱلَّذِينَ كَفَرُواْ عَلَى ٱلنَّارِ أَذۡهَبۡتُمۡ طَيِّبَٰتِكُمۡ فِي حَيَاتِكُمُ ٱلدُّنۡيَا وَٱسۡتَمۡتَعۡتُم بِهَا فَٱلۡيَوۡمَ تُجۡزَوۡنَ عَذَابَ ٱلۡهُونِ بِمَا كُنتُمۡ تَسۡتَكۡبِرُونَ فِي ٱلۡأَرۡضِ بِغَيۡرِ ٱلۡحَقِّ وَبِمَا كُنتُمۡ تَفۡسُقُونَ ﴿٢٠﴾

២០-ហើយនៅថ្ងៃដែលគេបញ្ជូនពួកដែលប្រឆាំងទៅកាន់នរក(ដោយនិយាយថា) ពួកអ្នកបានធ្វើឱ្យបាត់បង់នូវប្រការល្អរបស់ពួកអ្នកក្នុងការរស់នៅរបស់ពួកអ្នកនៅលើលោកិយ ហើយពួកអ្នកបានសោយសុខនឹងវា។ ដូច្នេះថ្ងៃនេះពួកអ្នកនឹងត្រូវគេតបស្នងនូវទារុណកម្មដ៏អាម៉ាស់ដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានក្រអឺតក្រទមនៅលើផែនដីដោយមិនត្រឹមត្រូវ និងដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានបំពាន។

۞ وَٱذۡكُرۡ أَخَا عَادٍ إِذۡ أَنذَرَ قَوۡمَهُۥ بِٱلۡأَحۡقَافِ وَقَدۡ خَلَتِ ٱلنُّذُرُ مِنۢ بَيۡنِ يَدَيۡهِ وَمِنۡ خَلۡفِهِۦٓ أَلَّا تَعۡبُدُوٓاْ إِلَّا ٱللَّهَ إِنِّيٓ أَخَافُ عَلَيۡكُمۡ عَذَابَ يَوۡمٍ عَظِيمٖ ﴿٢١﴾

២១-ហើយចូរអ្នក(មូហាំម៉ាត់)រំលឹកដល់បងប្អូនរបស់អាដ(ហ៊ូទ)នៅពេលដែលគាត់បានដាស់តឿនព្រមានក្រុមរបស់គាត់នៅអះកហ្វ។ ហើយជាការពិតណាស់បណ្ដាអ្នកដាស់តឿនព្រមានបានកន្លងផុតទៅមុនគាត់ និងក្រោយគាត់(ដោយទូន្មានថា) ចូរពួកអ្នកកុំគោរពសក្ការៈផ្សេងពីអល់ឡោះឱ្យសោះ ពិតប្រាកដណាស់ ខ្ញុំខ្លាច

ទារុណកម្មនៅថ្ងៃដ៏ធំធេង(ថ្ងៃបរលោក)ធ្លាក់ទៅលើពួកអ្នក។

قَالُوٓاْ أَجِئۡتَنَا لِتَأۡفِكَنَا عَنۡ ءَالِهَتِنَا فَأۡتِنَا بِمَا تَعِدُنَآ إِن كُنتَ مِنَ ٱلصَّٰدِقِينَ ﴿٢٢﴾

២២-ពួកគេបាននិយាយថាៈ តើអ្នកបានមកកាន់ពួកយើងដើម្បីបង្វែរពួកយើងចេញពី(ការគោរពសក្ការៈ)ព្រះនានារបស់ពួកយើងឬ? ដូច្នេះ ចូរអ្នកនាំមកឱ្យពួកយើងនូវអ្វី(ទារុណកម្ម)ដែលអ្នកសន្យាជាមួយពួកយើងមក ប្រសិនបើអ្នកស្ថិតក្នុងចំណោមអ្នកដែលនិយាយពិតមែននោះ?

قَالَ إِنَّمَا ٱلۡعِلۡمُ عِندَ ٱللَّهِ وَأُبَلِّغُكُم مَّآ أُرۡسِلۡتُ بِهِۦ وَلَٰكِنِّيٓ أَرَىٰكُمۡ قَوۡمٗا تَجۡهَلُونَ ﴿٢٣﴾

២៣-គាត់បានពោលថាៈ ពិតប្រាកដណាស់ ការដឹង(ក្នុងរឿងនោះ)មានតែអល់ឡោះ ហើយខ្ញុំគ្រាន់តែជាអ្នកផ្តល់ឱ្យពួកអ្នកនូវអ្វីដែលគេបានចាត់តាំងខ្ញុំឱ្យនាំវាមកប៉ុណ្ណោះ ក៏ប៉ុន្តែខ្ញុំឃើញថាពួកអ្នកគឺជាក្រុមដែលល្ងង់ខ្លៅ។

فَلَمَّا رَأَوۡهُ عَارِضٗا مُّسۡتَقۡبِلَ أَوۡدِيَتِهِمۡ قَالُواْ هَٰذَا عَارِضٞ مُّمۡطِرُنَاۚ بَلۡ هُوَ مَا ٱسۡتَعۡجَلۡتُم بِهِۦۖ رِيحٞ فِيهَا عَذَابٌ أَلِيمٞ ﴿٢٤﴾

២៤-ហើយនៅពេលដែលពួកគេបានឃើញវា(ទារុណកម្ម)ដូចជាដុំពពកដ៏ធំតម្រង់ទៅកាន់ជ្រលងភ្នំរបស់ពួកគេ ពួកគេបែរជានាំគ្នានិយាយថាៈ នេះគឺជាដុំពពកដែលនាំទឹកភ្លៀងមកឱ្យពួកយើង។ ផ្ទុយទៅវិញវាគឺជាទារុណកម្មដែលពួកអ្នកបានសុំឱ្យកើតឡើងភ្លាមៗនោះ។ វាគឺជាខ្យល់ដែលផ្ទុកដោយទារុណកម្មដ៏ឈឺចាប់បំផុត។

تُدَمِّرُ كُلَّ شَيۡءِۭ بِأَمۡرِ رَبِّهَا فَأَصۡبَحُواْ لَا يُرَىٰٓ إِلَّا مَسَٰكِنُهُمۡۚ كَذَٰلِكَ نَجۡزِي ٱلۡقَوۡمَ ٱلۡمُجۡرِمِينَ ﴿٢٥﴾

២៥-វាបំផ្លាញអ្វីៗទាំងអស់តាមបទបញ្ជានៃម្ចាស់របស់វា។ ដូច្នេះ ពួកគេក្លាយជាអ្នកដែលមិនឃើញអ្វីក្រៅពី(កំទេចកំទី)លំនៅដ្ឋានរបស់ពួកគេនោះឡើយ។ ដូច្នោះដែរ យើងតបស្នងចំពោះក្រុមដែលប្រព្រឹត្តបាបកម្ម។

وَلَقَدۡ مَكَّنَّٰهُمۡ فِيمَآ إِن مَّكَّنَّٰكُمۡ فِيهِ وَجَعَلۡنَا لَهُمۡ سَمۡعٗا وَأَبۡصَٰرٗا وَأَفۡـِٔدَةٗ فَمَآ أَغۡنَىٰ عَنۡهُمۡ سَمۡعُهُمۡ وَلَآ أَبۡصَٰرُهُمۡ وَلَآ أَفۡـِٔدَتُهُم مِّن شَيۡءٍ إِذۡ كَانُواْ يَجۡحَدُونَ بِـَٔايَٰتِ ٱللَّهِ وَحَاقَ بِهِم مَّا كَانُواْ بِهِۦ يَسۡتَهۡزِءُونَ ﴿٢٦﴾

២៦-ហើយជាការពិតណាស់ យើងបានផ្តល់សិទ្ធិអំណាចឱ្យពួកគេ(ក្រុមអាដ)នូវអ្វីដែលយើងមិនបានផ្តល់ឱ្យពួកអ្នក(ពួកគូរ៉ៃស្ហ)អំពីវា។ ហើយយើងបានបង្កើតឱ្យពួកគេមានត្រចៀក និងភ្នែក ហើយនិងបេះដូង ក៏ប៉ុន្តែត្រចៀករបស់ពួកគេ និងភ្នែករបស់ពួកគេ ហើយនិងបេះដូងរបស់ពួកគេមិនបានផ្តល់ប្រយោជន៍អ្វីដល់ពួកគេឡើយ ដោយសារតែពួកគេបានបដិសេធនឹងអាយ៉ាត់ៗរបស់អល់ឡោះ។ ហើយអ្វី(ទារុណកម្ម)ដែលពួកគេធ្លាប់បានសើចចំអកនឹងវាបានហ៊ុមព័ទ្ធពួកគេ។

وَلَقَدۡ أَهۡلَكۡنَا مَا حَوۡلَكُم مِّنَ ٱلۡقُرَىٰ وَصَرَّفۡنَا

២៧-ហើយជាការពិតណាស់ យើងបានបំផ្លាញភូមិស្រុកមួយ

ចំនួនដែលនៅជុំវិញពួកអ្នក ហើយយើងបានបង្ហាញភស្តុតាងនានា (ដល់ពួកគេ) សង្ឃឹមថា ពួកគេនឹងវិលត្រឡប់ ។

២៨-ហើយហេតុអ្វីបានជាពួក(ព្រះនានា)ដែលពួកគេយកធ្វើជាម្ចាស់ក្រៅពីអល់ឡោះ ដើម្បីបញ្ចិតខ្លួន(ទៅចំពោះអល់ឡោះ) នោះមិនជួយពួកគេ? ផ្ទុយទៅវិញ ពួកវាបានគេចចេញពីពួកគេ ។ ហើយនោះគឺជាការភូតកុហករបស់ពួកគេ និងជាអ្វីដែលពួកគេបានប្រឌិតឡើងប៉ុណ្ណោះ ។

២៩-ហើយ(ចូរចងចាំ)នៅពេលដែលយើងបានបញ្ជូនមួយក្រុមអំពីជិនទៅកាន់អ្នក(មូហាំម៉ាត់)ដើម្បីឱ្យពួកគេស្តាប់គម្ពីរគួរអាន ។ ហើយនៅពេលដែលពួកគេបានទៅដល់គេ ពួកគេបាននិយាយ(ទៅកាន់គ្នាគេ)ថា: ចូរពួកអ្នកស្ងៀមស្ងាត់! ហើយនៅពេលដែលគេសូត្រចប់ពួកគេបានត្រឡប់ទៅកាន់ក្រុមរបស់ពួកគេវិញ ដើម្បីធ្វើជាអ្នកដាស់តឿនព្រមាន ។

៣០-ពួកគេបាននិយាយថា: ឱក្រុមរបស់ពួកយើង! ពិតប្រាកដណាស់ យើងបានឮគម្ពីរ(គួរអាន)ដែលគេបានបញ្ចុះក្រោយពីមូសាដែលជាការបញ្ជាក់នូវអ្វីៗដែលបានបញ្ចុះពីមុនវា ដែលចង្អុលបង្ហាញទៅកាន់ភាពពិត និងទៅកាន់មាគ៌ាដ៏ត្រឹមត្រូវ ។

៣១-ឱក្រុមរបស់ពួកយើង! ចូរពួកអ្នកឆ្លើយតបចំពោះអ្នកអំពាវនាវរបស់អល់ឡោះ(មូហាំម៉ាត់) និងមានជំនឿលើគេចុះ ទ្រង់នឹងអភ័យទោសដល់ពួកអ្នកនូវទោសកំហុសទាំងឡាយរបស់ពួកអ្នក ហើយទ្រង់នឹងសង្គ្រោះពួកអ្នកឱ្យរួចផុតពីទារុណកម្មដ៏ឈឺចាប់ ។

៣២-ហើយអ្នកណាដែលមិនឆ្លើយតបចំពោះអ្នកអំពាវនាវរបស់អល់ឡោះទេនោះ គឺអ្នកនោះមិនអាចគេចផុត(ពីទារុណកម្ម)បានឡើយនៅលើផែនដីនេះ ហើយគេក៏គ្មានអ្នកគាំពារណាផ្សេងពីទ្រង់ដែរ ។ ពួកទាំងនោះគឺស្ថិតនៅក្នុងភាពវង្វេងដ៏ច្បាស់លាស់ ។

៣៣-តើពួកគេមិនបានឃើញទេឬថា ពិតប្រាកដណាស់ អល់ឡោះជាអ្នកដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដី ហើយទ្រង់មិនលំបាកក្នុងការបង្កើតវា គឺទ្រង់មានសមត្ថភាពគ្រប់

ٱلْـَٔايَـٰتِ لَعَلَّهُمْ يَرْجِعُونَ ﴿٢٧﴾

فَلَوْلَا نَصَرَهُمُ ٱلَّذِينَ ٱتَّخَذُوا۟ مِن دُونِ ٱللَّهِ
قُرْبَانًا ءَالِهَةًۢ ۖ بَلْ ضَلُّوا۟ عَنْهُمْ ۚ وَذَٰلِكَ إِفْكُهُمْ
وَمَا كَانُوا۟ يَفْتَرُونَ ﴿٢٨﴾

وَإِذْ صَرَفْنَآ إِلَيْكَ نَفَرًا مِّنَ ٱلْجِنِّ
يَسْتَمِعُونَ ٱلْقُرْءَانَ فَلَمَّا حَضَرُوهُ
قَالُوٓا۟ أَنصِتُوا۟ ۖ فَلَمَّا قُضِىَ وَلَّوْا۟ إِلَىٰ قَوْمِهِم
مُّنذِرِينَ ﴿٢٩﴾

قَالُوا۟ يَـٰقَوْمَنَآ إِنَّا سَمِعْنَا كِتَـٰبًا أُنزِلَ مِنۢ
بَعْدِ مُوسَىٰ مُصَدِّقًا لِّمَا بَيْنَ يَدَيْهِ يَهْدِىٓ إِلَى
ٱلْحَقِّ وَإِلَىٰ طَرِيقٍ مُّسْتَقِيمٍ ﴿٣٠﴾

يَـٰقَوْمَنَآ أَجِيبُوا۟ دَاعِىَ ٱللَّهِ وَءَامِنُوا۟ بِهِۦ
يَغْفِرْ لَكُم مِّن ذُنُوبِكُمْ وَيُجِرْكُم مِّنْ عَذَابٍ
أَلِيمٍ ﴿٣١﴾

وَمَن لَّا يُجِبْ دَاعِىَ ٱللَّهِ فَلَيْسَ بِمُعْجِزٍ فِى
ٱلْأَرْضِ وَلَيْسَ لَهُۥ مِن دُونِهِۦٓ أَوْلِيَآءُ ۚ
أُو۟لَـٰٓئِكَ فِى ضَلَـٰلٍ مُّبِينٍ ﴿٣٢﴾

أَوَلَمْ يَرَوْا۟ أَنَّ ٱللَّهَ ٱلَّذِى خَلَقَ ٱلسَّمَـٰوَٰتِ
وَٱلْأَرْضَ وَلَمْ يَعْىَ بِخَلْقِهِنَّ بِقَـٰدِرٍ عَلَىٰٓ

أَن يُحۡـِۧيَ ٱلۡمَوۡتَىٰۚ بَلَىٰٓ إِنَّهُۥ عَلَىٰ كُلِّ شَيۡءٖ
قَدِيرٞ ٣٣

وَيَوۡمَ يُعۡرَضُ ٱلَّذِينَ كَفَرُواْ عَلَى ٱلنَّارِ أَلَيۡسَ
هَٰذَا بِٱلۡحَقِّۖ قَالُواْ بَلَىٰ وَرَبِّنَاۚ قَالَ فَذُوقُواْ
ٱلۡعَذَابَ بِمَا كُنتُمۡ تَكۡفُرُونَ ٣٤

فَٱصۡبِرۡ كَمَا صَبَرَ أُوْلُواْ ٱلۡعَزۡمِ مِنَ ٱلرُّسُلِ
وَلَا تَسۡتَعۡجِل لَّهُمۡۚ كَأَنَّهُمۡ يَوۡمَ يَرَوۡنَ مَا
يُوعَدُونَ لَمۡ يَلۡبَثُوٓاْ إِلَّا سَاعَةٗ مِّن
نَّهَارِۭۚ بَلَٰغٞۚ فَهَلۡ يُهۡلَكُ إِلَّا ٱلۡقَوۡمُ
ٱلۡفَٰسِقُونَ ٣٥

سورة محمد

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ٱلَّذِينَ كَفَرُواْ وَصَدُّواْ عَن سَبِيلِ ٱللَّهِ أَضَلَّ
أَعۡمَٰلَهُمۡ ١

وَٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ
وَءَامَنُواْ بِمَا نُزِّلَ عَلَىٰ مُحَمَّدٖ وَهُوَ ٱلۡحَقُّ مِن
رَّبِّهِمۡ كَفَّرَ عَنۡهُمۡ سَيِّـَٔاتِهِمۡ وَأَصۡلَحَ بَالَهُمۡ ٢

គ្រាន់ធ្វើឱ្យអ្នកដែលស្លាប់រស់ឡើងវិញនោះ? ពិតហើយ ទ្រង់ពិតជាមានអានុភាពលើអ្វីៗទាំងអស់។

៣៤-ហើយនៅថ្ងៃដែលគេនាំពួកដែលប្រឆាំងទៅកាន់នរក (ដោយនិយាយថា) តើនេះមិនមែនជាការពិតទេឬ? ពួកគេបានតបវិញថាៈ ពិតមែនហើយ សូមស្បថនឹងម្ចាស់របស់ពួកយើង។ ទ្រង់មានបន្ទូលថាៈ ដូច្នេះ ចូរពួកអ្នកភ្លក្សនូវទារុណកម្មនេះដោយសារតែពួកអ្នកធ្លាប់បានប្រឆាំងចុះ។

៣៥-ដូច្នេះចូរអ្នក(មូហាំម៉ាត់) អត់ធ្មត់ដូចបណ្ដាអ្នកដែលមានឆន្ទៈមោះមុតក្នុងចំណោមអ្នកនាំសារទាំងឡាយបានអត់ធ្មត់[១] ចុះ។ ហើយអ្នកកុំសុំឱ្យ(ទារុណកម្ម) ប្រញាប់ធ្លាក់មកលើពួកគេឱ្យសោះ។ នៅថ្ងៃដែលពួកគេឃើញនូវអ្វីដែលត្រូវគេសន្យាចំពោះពួកគេ ហាក់បីដូចជាពួកគេមិនបានរស់នៅ(ក្នុងលោកិយនេះ)ឡើយ លើកលែងតែមួយរយៈពេលខ្លីនៃពេលថ្ងៃប៉ុណ្ណោះ។ នេះគឺជាមេរៀនមួយដ៏គ្រប់គ្រាន់(សម្រាប់ពួកគេ)។ ដូច្នេះ គេមិនបំផ្លាញក្រុមណាក្រៅពីក្រុមដែលល្មើសនឹងបទបញ្ជារបស់អល់ឡោះឡើយ។

## ជំពូកមូហាំម៉ាត់

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-ពួកដែលបានប្រឆាំង និងបានរារាំងអ្នកដទៃអំពីមាគ៌ារបស់អល់ឡោះ គឺទ្រង់លុបបំបាត់នូវអំពើល្អទាំងឡាយរបស់ពួកគេ។

២-រីឯបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ ហើយនិងបានជឿនូវអ្វីដែលគេបានបញ្ចុះទៅឱ្យមូហាំម៉ាត់(គម្ពីរគួរអាន) ដែលវាជាការពិតមកពីម្ចាស់របស់ពួកគេ គឺទ្រង់លុបបំបាត់នូវអំពើបាបទាំងឡាយរបស់ពួកគេ ហើយទ្រង់កែលំអនូវស្ថានភាពរបស់ពួកគេ។

---

១-អ្នកនាំសារដែលមានឆន្ទៈមោះមុតមាន នួហ អ៊ីព្រហ៊ីម មូសា អ៊ីសា និងមូហាំម៉ាត់។

ذَٰلِكَ بِأَنَّ ٱلَّذِينَ كَفَرُوا۟ ٱتَّبَعُوا۟ ٱلْبَٰطِلَ
وَأَنَّ ٱلَّذِينَ ءَامَنُوا۟ ٱتَّبَعُوا۟ ٱلْحَقَّ مِن رَّبِّهِمْ ۚ
كَذَٰلِكَ يَضْرِبُ ٱللَّهُ لِلنَّاسِ أَمْثَٰلَهُمْ ﴿٣﴾

៣-នោះគឺដោយសារតែពួកដែលប្រឆាំងបានធ្វើតាមប្រការដែលមិនត្រឹមត្រូវ ។ តែពិតប្រាកដណាស់ បណ្ដាអ្នកដែលមានជំនឿបានធ្វើតាមប្រការដែលត្រឹមត្រូវដែលមកពីម្ចាស់របស់ពួកគេ ។ ដូច្នោះដែរ អល់ឡោះលើកយកពួកគេមកធ្វើជាឧទាហរណ៍សម្រាប់មនុស្សលោក ។

فَإِذَا لَقِيتُمُ ٱلَّذِينَ كَفَرُوا۟ فَضَرْبَ ٱلرِّقَابِ
حَتَّىٰٓ إِذَآ أَثْخَنتُمُوهُمْ فَشُدُّوا۟ ٱلْوَثَاقَ فَإِمَّا مَنًّۢا
بَعْدُ وَإِمَّا فِدَآءً حَتَّىٰ تَضَعَ ٱلْحَرْبُ أَوْزَارَهَا ۚ
ذَٰلِكَ وَلَوْ يَشَآءُ ٱللَّهُ لَٱنتَصَرَ مِنْهُمْ وَلَٰكِن
لِّيَبْلُوَا۟ بَعْضَكُم بِبَعْضٍ ۗ وَٱلَّذِينَ قُتِلُوا۟ فِى
سَبِيلِ ٱللَّهِ فَلَن يُضِلَّ أَعْمَٰلَهُمْ ﴿٤﴾

៤-ហើយនៅពេលដែលពួកអ្នកជួបប្រទះនឹងពួកដែលប្រឆាំង (នៅក្នុងសមរភូមិ) ចូរពួកអ្នកកាប់កញ្ចឹងក(របស់ពួកគេ)ចុះរហូតទាល់តែពួកអ្នកមានជ័យជំនះលើពួកគេ ។ ដូច្នេះ ចូរពួកអ្នកចាប់ពួកគេជាឈ្លើយសឹក បន្ទាប់មកពួកអ្នកអាចដោះលែងពួកគេ ឬទទួលយកទ្រព្យលោះពីពួកគេរហូតដល់សង្គ្រាមត្រូវបានបញ្ចប់ ។ រឿងនោះប្រសិនបើអល់ឡោះមានចេតនា ទ្រង់នឹងធ្វើឱ្យ(ពួកអ្នក) មានជ័យជំនះលើពួកគេ ក៏ប៉ុន្ដែ(ធ្វើដូច្នេះ)ដើម្បីទ្រង់នឹងសាកល្បងពួកអ្នកទៅវិញទៅមក ។ ហើយបណ្ដាអ្នកដែលត្រូវគេសម្លាប់នៅក្នុងមាគ៌ារបស់អល់ឡោះ(សមរភូមិ)នោះ ទ្រង់នឹងមិនលុបបំបាត់នូវអំពើល្អទាំងឡាយរបស់ពួកគេជាដាច់ខាត ។

سَيَهْدِيهِمْ وَيُصْلِحُ بَالَهُمْ ﴿٥﴾

៥-ទ្រង់នឹងចង្អុលបង្ហាញពួកគេ និងកែលំអស្ថានភាពរបស់ពួកគេ ។

وَيُدْخِلُهُمُ ٱلْجَنَّةَ عَرَّفَهَا لَهُمْ ﴿٦﴾

៦-ហើយទ្រង់នឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌ដែលទ្រង់បានណែនាំវាឱ្យពួកគេស្គាល់ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓا۟ إِن تَنصُرُوا۟ ٱللَّهَ يَنصُرْكُمْ
وَيُثَبِّتْ أَقْدَامَكُمْ ﴿٧﴾

៧-ឱបណ្ដាអ្នកមានជំនឿ! ប្រសិនបើពួកអ្នកជួយ(សាសនា) អល់ឡោះ គឺទ្រង់នឹងជួយពួកអ្នកវិញ ហើយទ្រង់នឹងពង្រឹងនូវគោលជំហររបស់ពួកអ្នក ។

وَٱلَّذِينَ كَفَرُوا۟ فَتَعْسًا لَّهُمْ وَأَضَلَّ
أَعْمَٰلَهُمْ ﴿٨﴾

៨-រីឯពួកដែលប្រឆាំងវិញ ការវិនាសនឹងធ្លាក់ទៅលើពួកគេ ហើយទ្រង់នឹងលុបបំបាត់នូវអំពើល្អទាំងឡាយរបស់ពួកគេ ។

ذَٰلِكَ بِأَنَّهُمْ كَرِهُوا۟ مَآ أَنزَلَ ٱللَّهُ فَأَحْبَطَ
أَعْمَٰلَهُمْ ﴿٩﴾

៩-នោះគឺដោយសារតែពួកគេបានស្អប់ខ្ពើមនូវអ្វីដែលអល់ឡោះបានបញ្ចុះ(គម្ពីរគួរអាន) ។ ដូច្នេះ ទ្រង់នឹងរំលាយអំពើល្អទាំងឡាយរបស់ពួកគេ ។

១០-ដូច្នេះ តើពួកគេ(អារ៉ាប់ម៉ាក្កះ)មិនបានធ្វើដំណើរនៅលើផែនដី និងពិនិត្យមើលទេឬ តើលទ្ធផលចុងក្រោយរបស់ពួក(ក្រុមអាដ និងសាមូដ)ដែលពីមុនពួកគេនោះយ៉ាងដូចម្ដេចដែរ? អល់ឡោះបានបំផ្លាញពួកគេឱ្យខ្ទេចខ្ទី ។ ហើយសម្រាប់ពួកដែលប្រឆាំងវិញនឹងទទួលលទ្ធផលដូចគ្នាដែរ ។

១១-នោះគឺដោយសារតែអល់ឡោះជាអ្នកគាំពារបណ្ដាអ្នកដែលមានជំនឿ ។ ហើយពិតប្រាកដណាស់ ពួកដែលប្រឆាំង ពួកគេគ្មានអ្នកគាំពារឡើយ ។

១២-ពិតប្រាកដណាស់ អល់ឡោះនឹងបញ្ចូលបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ។ រីឯពួកដែលប្រឆាំងវិញ ពួកគេសោយសុខ(នៅក្នុងលោកិយ)និងបរិភោគដូចជាសត្វពាហនៈស៊ីដូច្នោះដែរ ។ ហើយនរកគឺជាកន្លែងជ្រកកោនសម្រាប់ពួកគេ ។

១៣-ហើយមានអ្នកភូមិស្រុកជាច្រើនដែលពួកគេមានអំណាចខ្លាំងក្លាជាងអ្នកភូមិស្រុករបស់អ្នក(មូហាំម៉ាត់)ទៅទៀតដែលពួកគេបានបណ្ដេញអ្នកចេញនោះ គឺយើងបានបំផ្លាញពួកគេ ហើយគ្មានអ្នកណាម្នាក់ជួយពួកគេឡើយ ។

១៤-ដូច្នេះ តើអ្នកដែលស្ថិតលើភស្តុតាងយ៉ាងច្បាស់លាស់ពីម្ចាស់របស់គេ ដូចអ្នកដែលស្ហៃតនបានលំអសម្រាប់គេនូវអំពើអាក្រក់របស់គេ និងពួកដែលបានធ្វើតាមចំណង់របស់ពួកគេឬ?

១៥-លក្ខណៈរបស់ឋានសួគ៌ដែលគេបានសន្យាចំពោះបណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ ដែលនៅក្នុងនោះមានទន្លេជាច្រើនអំពីទឹកដែលមិនប្រែក្លិន និងរសជាតិ និងមានទន្លេជាច្រើនអំពីទឹកដោះគោដែលមិនប្រែប្រួលរសជាតិរបស់វា ហើយមានទន្លេជាច្រើនអំពីសុរាដែលមានរសជាតិឆ្ងាញ់សម្រាប់អ្នកដែលទទួលទាន ហើយនិងមានទន្លេជាច្រើនទៀតអំពីទឹកឃ្មុំដ៏បរិសុទ្ធ ។ ហើយនៅក្នុងនោះដែរ ពួកគេមានផ្លែឈើគ្រប់ប្រភេទ និងមានការអភ័យទោសពីម្ចាស់របស់ពួកគេនោះ តើវាដូចនឹងអ្នកដែលរស់ជាអមតៈនៅក្នុង

۞ أَفَلَمْ يَسِيرُواْ فِي ٱلْأَرْضِ فَيَنظُرُواْ كَيْفَ كَانَ عَـٰقِبَةُ ٱلَّذِينَ مِن قَبْلِهِمْ ۖ دَمَّرَ ٱللَّهُ عَلَيْهِمْ ۖ وَلِلْكَـٰفِرِينَ أَمْثَـٰلُهَا ﴿١٠﴾

ذَٰلِكَ بِأَنَّ ٱللَّهَ مَوْلَى ٱلَّذِينَ ءَامَنُواْ وَأَنَّ ٱلْكَـٰفِرِينَ لَا مَوْلَىٰ لَهُمْ ﴿١١﴾

إِنَّ ٱللَّهَ يُدْخِلُ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّـٰلِحَـٰتِ جَنَّـٰتٍ تَجْرِي مِن تَحْتِهَا ٱلْأَنْهَـٰرُ ۖ وَٱلَّذِينَ كَفَرُواْ يَتَمَتَّعُونَ وَيَأْكُلُونَ كَمَا تَأْكُلُ ٱلْأَنْعَـٰمُ وَٱلنَّارُ مَثْوًى لَّهُمْ ﴿١٢﴾

وَكَأَيِّن مِّن قَرْيَةٍ هِيَ أَشَدُّ قُوَّةً مِّن قَرْيَتِكَ ٱلَّتِيٓ أَخْرَجَتْكَ أَهْلَكْنَـٰهُمْ فَلَا نَاصِرَ لَهُمْ ﴿١٣﴾

أَفَمَن كَانَ عَلَىٰ بَيِّنَةٍ مِّن رَّبِّهِۦ كَمَن زُيِّنَ لَهُۥ سُوٓءُ عَمَلِهِۦ وَٱتَّبَعُوٓاْ أَهْوَآءَهُم ﴿١٤﴾

مَّثَلُ ٱلْجَنَّةِ ٱلَّتِي وُعِدَ ٱلْمُتَّقُونَ ۖ فِيهَآ أَنْهَـٰرٌ مِّن مَّآءٍ غَيْرِ ءَاسِنٍ وَأَنْهَـٰرٌ مِّن لَّبَنٍ لَّمْ يَتَغَيَّرْ طَعْمُهُۥ وَأَنْهَـٰرٌ مِّنْ خَمْرٍ لَّذَّةٍ لِّلشَّـٰرِبِينَ وَأَنْهَـٰرٌ مِّنْ عَسَلٍ مُّصَفًّى ۖ وَلَهُمْ فِيهَا مِن كُلِّ ٱلثَّمَرَٰتِ وَمَغْفِرَةٌ مِّن رَّبِّهِمْ ۖ كَمَنْ هُوَ خَـٰلِدٌ فِي ٱلنَّارِ وَسُقُواْ مَآءً حَمِيمًا فَقَطَّعَ

أَمۡعَآءَهُمۡ ١٥

ឋាននរក ហើយគេបានឱ្យពួកគេផឹកទឹកដ៏សែនក្ដៅ រួចវាបានកាត់ផ្ដាច់ពោះវៀនរបស់ពួកគេឬ?

وَمِنۡهُم مَّن يَسۡتَمِعُ إِلَيۡكَ حَتَّىٰٓ إِذَا خَرَجُواْ مِنۡ عِندِكَ قَالُواْ لِلَّذِينَ أُوتُواْ ٱلۡعِلۡمَ مَاذَا قَالَ ءَانِفًاۚ أُوْلَٰٓئِكَ ٱلَّذِينَ طَبَعَ ٱللَّهُ عَلَىٰ قُلُوبِهِمۡ وَٱتَّبَعُوٓاْ أَهۡوَآءَهُمۡ ١٦

១៦-ហើយនៅក្នុងចំណោមពួកគេ(ពួកពុតត្បុត)មានអ្នកដែលស្ដាប់អ្នក(មូហាំម៉ាត់)។ លុះនៅពេលដែលពួកគេបានចាកចេញពីអ្នក ពួកគេបាននិយាយទៅកាន់បណ្ដាអ្នកដែលត្រូវគេផ្ដល់ចំណេះដឹងឱ្យថាៈ តើគេ(មូហាំម៉ាត់)បាននិយាយអ្វីអំបាញ់មិញ? ពួកទាំងនោះហើយដែលអល់ឡោះបានបោះត្រាភ្ជិតទៅលើចិត្តរបស់ពួកគេ និងជាពួកដែលបានធ្វើតាមចំណង់របស់ពួកគេ។

وَٱلَّذِينَ ٱهۡتَدَوۡاْ زَادَهُمۡ هُدٗى وَءَاتَىٰهُمۡ تَقۡوَىٰهُمۡ ١٧

១៧-ហើយបណ្ដាអ្នកដែលទទួលបានការចង្អុលបង្ហាញ ទ្រង់បានបន្ថែមការចង្អុលបង្ហាញដល់ពួកគេ និងបានផ្ដល់ឱ្យពួកគេនូវការកោតខ្លាចរបស់ពួកគេថែមទៀត។

فَهَلۡ يَنظُرُونَ إِلَّا ٱلسَّاعَةَ أَن تَأۡتِيَهُم بَغۡتَةٗۖ فَقَدۡ جَآءَ أَشۡرَاطُهَاۚ فَأَنَّىٰ لَهُمۡ إِذَا جَآءَتۡهُمۡ ذِكۡرَىٰهُمۡ ١٨

១៨-ដូច្នេះ ពួកគេមិនរង់ចាំអ្វីក្រៅពីកាលកំណត់នៃថ្ងៃបរលោកដែលនឹងមកដល់ពួកគេភ្លាមៗនោះឡើយ។ ហើយជាការពិតណាស់ សញ្ញាណទាំងឡាយរបស់វាក៏បានលេចឡើងហើយដែរ។ ដូច្នេះ តើការភ្ញាក់រលឹករបស់ពួកគេមានប្រយោជន៍អ្វីសម្រាប់ពួកគេនៅពេលដែលវា(ថ្ងៃបរលោក)បានមកដល់ពួកគេហើយនោះ?

فَٱعۡلَمۡ أَنَّهُۥ لَآ إِلَٰهَ إِلَّا ٱللَّهُ وَٱسۡتَغۡفِرۡ لِذَنۢبِكَ وَلِلۡمُؤۡمِنِينَ وَٱلۡمُؤۡمِنَٰتِۗ وَٱللَّهُ يَعۡلَمُ مُتَقَلَّبَكُمۡ وَمَثۡوَىٰكُمۡ ١٩

១៩-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)ដឹងថាៈ ពិតប្រាកដណាស់ គ្មានម្ចាស់ណាផ្សេងដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីអល់ឡោះឡើយ។ ហើយចូរអ្នកសុំអភ័យទោស(ពីអល់ឡោះ)ចំពោះបាបកម្មរបស់អ្នកនិង(បាបកម្ម)បណ្ដាអ្នកមានជំនឿប្រុស និងបណ្ដាអ្នកមានជំនឿស្រីចុះ។ ហើយអល់ឡោះដឹងនូវសកម្មភាពរបស់ពួកអ្នក និងកន្លែងស្នាក់នៅរបស់ពួកអ្នក។

وَيَقُولُ ٱلَّذِينَ ءَامَنُواْ لَوۡلَا نُزِّلَتۡ سُورَةٞۖ فَإِذَآ أُنزِلَتۡ سُورَةٞ مُّحۡكَمَةٞ وَذُكِرَ فِيهَا ٱلۡقِتَالُ رَأَيۡتَ ٱلَّذِينَ فِي قُلُوبِهِم مَّرَضٞ يَنظُرُونَ إِلَيۡكَ نَظَرَ ٱلۡمَغۡشِيِّ عَلَيۡهِ مِنَ ٱلۡمَوۡتِۖ فَأَوۡلَىٰ لَهُمۡ ٢٠

២០-ហើយបណ្ដាអ្នកដែលមានជំនឿនិយាយថាៈ ហេតុអ្វីបានជាគេមិនបញ្ចុះជំពូក(បង្គាប់ឱ្យពួកយើងធ្វើសង្គ្រាម)? តែនៅពេលដែលជំពូកដ៏ច្បាស់លាស់ត្រូវបានគេបញ្ចុះ និងបទបញ្ញាធ្វើសង្គ្រាមត្រូវបានគេរំលឹកនៅក្នុងវានោះ អ្នកនឹងបានឃើញពួកដែលមានជំងឺក្នុងចិត្តរបស់ពួកគេ(ពួកពុតត្បុត)សម្លឹងមើលអ្នក(មូហាំម៉ាត់) ដូចជាការសម្លឹងមើលរបស់អ្នកដែលជិតស្លាប់ដោយសារភ័យខ្លាចចំពោះ

សេចក្តីស្លាប់ដែរ ។ ដូច្នេះ ជាការល្អប្រសើរសម្រាប់ពួកគេ ។

طَاعَةٌ وَقَوْلٌ مَّعْرُوفٌ ۚ فَإِذَا عَزَمَ ٱلْأَمْرُ فَلَوْ
صَدَقُوا۟ ٱللَّهَ لَكَانَ خَيْرًا لَّهُمْ ﴿٢١﴾

២១-គឺការគោរពប្រតិបត្តិតាមអល់ឡោះនិងការនិយាយស្តីល្អ ។ ហើយនៅពេលដែលបទបញ្ជាធ្វើសង្គ្រាមបានកំណត់( ពួកពុតត្បុត បែរជាស្អប់ខ្ពើមវាទៅវិញ) ។ តែប្រសិនបើពួកគេជឿជាក់ចំពោះអល់ឡោះវិញនោះ វាជាការប្រសើរបំផុតសម្រាប់ពួកគេ ។

فَهَلْ عَسَيْتُمْ إِن تَوَلَّيْتُمْ أَن تُفْسِدُوا۟ فِى
ٱلْأَرْضِ وَتُقَطِّعُوٓا۟ أَرْحَامَكُمْ ﴿٢٢﴾

២២-ដូច្នេះ តើពួកអ្នកនឹងទៅជាយ៉ាងណា ប្រសិនបើពួកអ្នកបែរចេញ( ពីការប្រតិបត្តិតាមអល់ឡោះ) ទៅបង្កវិនាសកម្មនៅលើផែនដី និងផ្តាច់ចំណងសាច់ញាតិរបស់ពួកអ្នកវិញនោះ?

أُو۟لَٰٓئِكَ ٱلَّذِينَ لَعَنَهُمُ ٱللَّهُ فَأَصَمَّهُمْ وَأَعْمَىٰٓ
أَبْصَٰرَهُمْ ﴿٢٣﴾

២៣-ពួកទាំងនោះហើយដែលអល់ឡោះបានដាក់បណ្តាសាពួកគេ និងបានធ្វើឱ្យពួកគេថ្លង់ ហើយនិងធ្វើឱ្យភ្នែករបស់ពួកគេងងឹត ។

أَفَلَا يَتَدَبَّرُونَ ٱلْقُرْءَانَ أَمْ عَلَىٰ قُلُوبٍ
أَقْفَالُهَآ ﴿٢٤﴾

២៤-ដូច្នេះ តើពួកគេមិនគិតពិចារណាអំពី( អត្ថន័យ) គម្ពីរគួរអានទេឬ? ឬនៅក្នុងចិត្តរបស់ពួកគេត្រូវបិទជិត( មិនយល់អ្វីសោះអំពីគម្ពីរគួរអាន) ?

إِنَّ ٱلَّذِينَ ٱرْتَدُّوا۟ عَلَىٰٓ أَدْبَٰرِهِم مِّنۢ بَعْدِ
مَا تَبَيَّنَ لَهُمُ ٱلْهُدَى ۙ ٱلشَّيْطَٰنُ سَوَّلَ لَهُمْ
وَأَمْلَىٰ لَهُمْ ﴿٢٥﴾

២៥-ពិតប្រាកដណាស់ ពួកដែលបានបែរខ្នងរបស់ពួកគេ( ចេញពីសាសនាអ៊ីស្លាម) បន្ទាប់ពីការចង្អុលបង្ហាញបានបញ្ជាក់យ៉ាងច្បាស់ចំពោះពួកគេហើយនោះ គឺស្ហៃតនបានលំអ( បាបកម្ម) សម្រាប់ពួកគេ ហើយវាបានពន្យារនូវក្តីស្រមើស្រមៃរបស់ពួកគេ ។

ذَٰلِكَ بِأَنَّهُمْ قَالُوا۟ لِلَّذِينَ كَرِهُوا۟ مَا
نَزَّلَ ٱللَّهُ سَنُطِيعُكُمْ فِى بَعْضِ ٱلْأَمْرِ ۖ
وَٱللَّهُ يَعْلَمُ إِسْرَارَهُمْ ﴿٢٦﴾

២៦-នោះគឺដោយសារតែពួកគេ( ពួកពុតត្បុត) បាននិយាយទៅកាន់ពួក( យ៉ាហ៊ូទី) ដែលបានស្អប់ខ្ពើមនូវអ្វីដែលអល់ឡោះបានបញ្ចុះ( ឱ្យមូហាំម៉ាត់) ថាៈ ពួកយើងនឹងប្រតិបត្តិតាមពួកអ្នកនូវកិច្ចការមួយចំនួនប៉ុណ្ណោះ ។ ហើយអល់ឡោះដឹងនូវអាថ៌កំបាំងទាំងឡាយរបស់ពួកគេ ។

فَكَيْفَ إِذَا تَوَفَّتْهُمُ ٱلْمَلَٰٓئِكَةُ يَضْرِبُونَ
وُجُوهَهُمْ وَأَدْبَٰرَهُمْ ﴿٢٧﴾

២៧-ដូច្នេះ នៅពេលដែលម៉ាឡាអ៊ីកាត់យកជីវិតពួកគេ ដោយវាយមុខរបស់ពួកគេ និងខ្នងរបស់ពួកគេនោះ តើយ៉ាងដូចម្តេចវិញ?

ذَٰلِكَ بِأَنَّهُمُ ٱتَّبَعُوا۟ مَآ أَسْخَطَ ٱللَّهَ

២៨-នោះគឺដោយសារតែពួកគេធ្វើតាមអ្វីដែលធ្វើឱ្យអល់ឡោះខឹង ។ ហើយពួកគេបានស្អប់ខ្ពើមចំពោះការយល់ព្រមរបស់ទ្រង់ ។

وَكَرِهُواْ رِضْوَانَهُۥ فَأَحْبَطَ أَعْمَٰلَهُمْ ﴿٢٨﴾

ដូច្នេះ ទ្រង់ក៏លុបបំបាត់អំពើល្អរបស់ពួកគេ។

أَمْ حَسِبَ ٱلَّذِينَ فِى قُلُوبِهِم مَّرَضٌ أَن لَّن
يُخْرِجَ ٱللَّهُ أَضْغَٰنَهُمْ ﴿٢٩﴾

២៩-ឬមួយពួកដែលមានជំងឺនៅក្នុងចិត្តរបស់ពួកគេគិតថា៖ អល់ឡោះនឹងមិនលាតត្រដាងនូវការគុំគួនឈ្នានីសរបស់ពួកគេ (ចំពោះអ្នកមានជំនឿ) ទេឬ?

وَلَوْ نَشَآءُ لَأَرَيْنَٰكَهُمْ فَلَعَرَفْتَهُم بِسِيمَٰهُمْ ۚ
وَلَتَعْرِفَنَّهُمْ فِى لَحْنِ ٱلْقَوْلِ ۚ وَٱللَّهُ يَعْلَمُ
أَعْمَٰلَكُمْ ﴿٣٠﴾

៣០-ហើយប្រសិនបើយើងមានចេតនា យើងពិតជានឹងបង្ហាញឱ្យអ្នកឃើញពួកគេ ហើយអ្នកពិតជានឹងស្គាល់ពួកគេតាមរយៈសញ្ញា (ពុតត្បុត) របស់ពួកគេជាមិនខាន។ ហើយអ្នកពិតជានឹងស្គាល់ពួកគេទៀតតាមរយៈអត្ថន័យនៃពាក្យសំដីរបស់ពួកគេ។ ហើយអល់ឡោះដឹងនូវទង្វើរបស់ពួកអ្នក។

وَلَنَبْلُوَنَّكُمْ حَتَّىٰ نَعْلَمَ ٱلْمُجَٰهِدِينَ مِنكُمْ
وَٱلصَّٰبِرِينَ وَنَبْلُوَاْ أَخْبَارَكُمْ ﴿٣١﴾

៣១-ហើយយើងប្រាកដជានឹងសាកល្បងពួកអ្នក ដើម្បីយើងដឹងនូវបណ្តាអ្នកដែលតស៊ូ (ក្នុងសង្គ្រាម) និងបណ្តាអ្នកដែលអត់ធ្មត់ក្នុងចំណោមពួកអ្នក ព្រមទាំងយើងសាកល្បងចំពោះស្ថានភាពរបស់ពួកអ្នក។

إِنَّ ٱلَّذِينَ كَفَرُواْ وَصَدُّواْ عَن سَبِيلِ ٱللَّهِ
وَشَآقُّواْ ٱلرَّسُولَ مِنۢ بَعْدِ مَا تَبَيَّنَ لَهُمُ
ٱلْهُدَىٰ لَن يَضُرُّواْ ٱللَّهَ شَيْـًٔا وَسَيُحْبِطُ
أَعْمَٰلَهُمْ ﴿٣٢﴾

៣២-ពិតប្រាកដណាស់ ពួកដែលបានប្រឆាំង និងបានរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ ហើយនិងបានប្រឆាំងនឹងអ្នកនាំសារ បន្ទាប់ពីមានការចង្អុលបង្ហាញបានបញ្ជាក់យ៉ាងច្បាស់ ហើយនោះពួកគេមិនអាចបង្កគ្រោះថ្នាក់អ្វីដល់អល់ឡោះឡើយ។ ហើយទ្រង់នឹងលុបបំបាត់អំពើល្អរបស់ពួកគេ។

۞ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ أَطِيعُواْ ٱللَّهَ وَأَطِيعُواْ
ٱلرَّسُولَ وَلَا تُبْطِلُوٓاْ أَعْمَٰلَكُمْ ﴿٣٣﴾

៣៣-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកប្រតិបត្តិតាមអល់ឡោះ និងប្រតិបត្តិតាមអ្នកនាំសារចុះ និងកុំធ្វើឱ្យខូចអំពើល្អរបស់ពួកអ្នកឱ្យសោះ។

إِنَّ ٱلَّذِينَ كَفَرُواْ وَصَدُّواْ عَن سَبِيلِ ٱللَّهِ ثُمَّ
مَاتُواْ وَهُمْ كُفَّارٌ فَلَن يَغْفِرَ ٱللَّهُ لَهُمْ ﴿٣٤﴾

៣៤-ពិតប្រាកដណាស់ ពួកដែលបានប្រឆាំង និងបានរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ ក្រោយមកពួកគេបានស្លាប់ក្នុងពេលដែលពួកគេជាពួកប្រឆាំងនោះ គឺអល់ឡោះមិនអភ័យទោសឱ្យពួកគេជាដាច់ខាត។

فَلَا تَهِنُواْ وَتَدْعُوٓاْ إِلَى ٱلسَّلْمِ وَأَنتُمُ

៣៥-ដូច្នេះ ចូរពួកអ្នកកុំទន់ជ្រាយ និងកុំអំពាវនាវទៅរកសន្តិ-ភាព (ជាមួយពួកសត្រូវ) ខណៈដែលពួកអ្នកជាអ្នកដែលមានប្រៀប

ជាងពួកគេឱ្យសោះ ។ ហើយអល់ឡោះនៅជាមួយពួកអ្នកជានិច្ច ហើយទ្រង់មិនកាត់បន្ថយអំពើល្អរបស់ពួកអ្នកជាដាច់ខាត ។

៣៦-តាមពិត ការរស់នៅក្នុងលោកិយនេះ គឺគ្រាន់តែជាការលេងសើច និងជាការបោកប្រាស់ប៉ុណ្ណោះ ។ តែប្រសិនបើពួកអ្នកមានជំនឿ និងកោតខ្លាចអល់ឡោះវិញនោះ ទ្រង់នឹងប្រទានឱ្យពួកអ្នកនូវផលបុណ្យរបស់ពួកអ្នក ហើយទ្រង់មិនសុំពីពួកអ្នក (ឱ្យបរិច្ចាគទាន) នូវទ្រព្យសម្បត្តិទាំងអស់របស់ពួកអ្នកឡើយ ។

៣៧-ប្រសិនបើទ្រង់សុំវាពីពួកអ្នក រួចទទូចសុំពីពួកអ្នក (ឱ្យបរិច្ចាគទានទាំងអស់) នោះ ពួកអ្នកនឹងកំណាញ់ ហើយទ្រង់នឹងលាតត្រដាងនូវរាល់ការកំណាញ់ឈ្នានីសរបស់ពួកអ្នកជាមិនខាន ។

៣៨-ឱអ្នកទាំងអស់គ្នា (អ្នកមានជំនឿ) ! ពួកអ្នកត្រូវគេអំពាវនាវឱ្យបរិច្ចាគក្នុងមាគ៌ារបស់អល់ឡោះ តែក្នុងចំណោមពួកអ្នកមានអ្នកដែលកំណាញ់ ។ ហើយអ្នកណាដែលកំណាញ់ ពិតប្រាកដណាស់ គេកំណាញ់ចំពោះខ្លួនឯងប៉ុណ្ណោះ ។ ហើយអល់ឡោះមហាមានលើសលប់ រីឯពួកអ្នកវិញជាអ្នកដែលក្រខ្សត់ ។ តែប្រសិនបើពួកអ្នកបែរចេញ (ពីភាពមានជំនឿទ្រង់នឹងបំផ្លាញពួកអ្នក) ទ្រង់នឹងប្តូរក្រុមមួយផ្សេងទៀតក្រៅពីពួកអ្នក បន្ទាប់មកពួកគេទាំងនោះនឹងមិនមានលក្ខណៈដូចពួកអ្នកឡើយ ។

## ជំពូកអាល់ហ្វាត់ហ៍

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-ពិតប្រាកដណាស់ យើងបានផ្តល់ឱ្យអ្នក (មូហាំម៉ាត់) នូវជ័យជំនះយ៉ាងជាក់ស្តែង ។

២-ដើម្បីអល់ឡោះអភ័យទោសឱ្យអ្នកចំពោះបាបកម្មរបស់អ្នកដែលបានសាងកន្លងទៅ និងបាបកម្មដែលមិនទាន់បានសាង ។ ហើយទ្រង់នឹងបំពេញនៀកម៉ាត់របស់ទ្រង់ឱ្យអ្នក និងចង្អុលបង្ហាញអ្នកនូវមាគ៌ាដ៏ត្រឹមត្រូវ ។

ٱلۡأَعۡلَوۡنَ وَٱللَّهُ مَعَكُمۡ وَلَن يَتِرَكُمۡ
أَعۡمَٰلَكُمۡ ﴿٣٥﴾

إِنَّمَا ٱلۡحَيَوٰةُ ٱلدُّنۡيَا لَعِبٞ وَلَهۡوٞۚ وَإِن
تُؤۡمِنُواْ وَتَتَّقُواْ يُؤۡتِكُمۡ أُجُورَكُمۡ وَلَا يَسۡـَٔلۡكُمۡ
أَمۡوَٰلَكُمۡ ﴿٣٦﴾

إِن يَسۡـَٔلۡكُمُوهَا فَيُحۡفِكُمۡ تَبۡخَلُواْ وَيُخۡرِجۡ
أَضۡغَٰنَكُمۡ ﴿٣٧﴾

هَٰٓأَنتُمۡ هَٰٓؤُلَآءِ تُدۡعَوۡنَ لِتُنفِقُواْ فِي
سَبِيلِ ٱللَّهِ فَمِنكُم مَّن يَبۡخَلُۖ وَمَن يَبۡخَلۡ
فَإِنَّمَا يَبۡخَلُ عَن نَّفۡسِهِۦۚ وَٱللَّهُ ٱلۡغَنِيُّ وَأَنتُمُ
ٱلۡفُقَرَآءُۚ وَإِن تَتَوَلَّوۡاْ يَسۡتَبۡدِلۡ قَوۡمًا
غَيۡرَكُمۡ ثُمَّ لَا يَكُونُوٓاْ أَمۡثَٰلَكُم ﴿٣٨﴾

سورة الفتح

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

إِنَّا فَتَحۡنَا لَكَ فَتۡحٗا مُّبِينٗا ﴿١﴾

لِّيَغۡفِرَ لَكَ ٱللَّهُ مَا تَقَدَّمَ مِن ذَنۢبِكَ وَمَا
تَأَخَّرَ وَيُتِمَّ نِعۡمَتَهُۥ عَلَيۡكَ وَيَهۡدِيَكَ صِرَٰطٗا
مُّسۡتَقِيمٗا ﴿٢﴾

وَيَنصُرَكَ ٱللَّهُ نَصۡرًا عَزِيزًا ﴿٣﴾

៣-ហើយអល់ឡោះជួយអ្នកនូវជំនួយដ៏រឹងមាំ( ដើម្បីឱ្យមានជ័យជំនះ) ។

هُوَ ٱلَّذِيٓ أَنزَلَ ٱلسَّكِينَةَ فِي قُلُوبِ ٱلۡمُؤۡمِنِينَ لِيَزۡدَادُوٓاْ إِيمَٰنٗا مَّعَ إِيمَٰنِهِمۡۗ وَلِلَّهِ جُنُودُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ وَكَانَ ٱللَّهُ عَلِيمًا حَكِيمٗا ﴿٤﴾

៤-ទ្រង់ជាអ្នកដែលបានបញ្ចុះភាពនឹងនរនៅក្នុងចិត្តរបស់បណ្ដាអ្នកដែលមានជំនឿ( នៅថ្ងៃអាល់ហ៊ូទៃពីយ៉ះ) ដើម្បីឱ្យពួកគេបន្ថែមនូវភាពមានជំនឿរួមជាមួយនឹងជំនឿរបស់ពួកគេថែមទៀត ។ ហើយកងទ័ពនៃមេឃជាច្រើនជាន់និងផែនដីគឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

لِّيُدۡخِلَ ٱلۡمُؤۡمِنِينَ وَٱلۡمُؤۡمِنَٰتِ جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَا وَيُكَفِّرَ عَنۡهُمۡ سَيِّـَٔاتِهِمۡۚ وَكَانَ ذَٰلِكَ عِندَ ٱللَّهِ فَوۡزًا عَظِيمٗا ﴿٥﴾

៥-ដើម្បីទ្រង់នឹងបញ្ចូលបណ្ដាអ្នកដែលមានជំនឿទាំងប្រុសទាំងស្រីទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវាដោយពួកគេរស់នៅក្នុងនោះជាអមតៈ និងដើម្បីទ្រង់លុបបំបាត់នូវបាបកម្មទាំងឡាយរបស់ពួកគេ ។ ហើយរឿងនោះ គឺជាជោគជ័យមួយដ៏ធំធេងពីអល់ឡោះ ។

وَيُعَذِّبَ ٱلۡمُنَٰفِقِينَ وَٱلۡمُنَٰفِقَٰتِ وَٱلۡمُشۡرِكِينَ وَٱلۡمُشۡرِكَٰتِ ٱلظَّآنِّينَ بِٱللَّهِ ظَنَّ ٱلسَّوۡءِۚ عَلَيۡهِمۡ دَآئِرَةُ ٱلسَّوۡءِۖ وَغَضِبَ ٱللَّهُ عَلَيۡهِمۡ وَلَعَنَهُمۡ وَأَعَدَّ لَهُمۡ جَهَنَّمَۖ وَسَآءَتۡ مَصِيرٗا ﴿٦﴾

៦-ហើយដើម្បីទ្រង់ធ្វើទារុណកម្មចំពោះពួកពុតត្បុតទាំងប្រុសទាំងស្រី និងពួកមូស្ហ្សីរីគីនទាំងប្រុសទាំងស្រីដែលពួកគេគិតអាក្រក់ចំពោះអល់ឡោះ ។ អំពើអាក្រក់ទាំងនោះនឹងធ្លាក់ទៅលើពួកគេវិញ ។ ហើយអល់ឡោះខឹងសម្បាយ៉ាងខ្លាំងចំពោះពួកគេ និងបានដាក់បណ្ដាសាពួកគេ ថែមទាំងបានរៀបចំនរកជើហាន់ណាំសម្រាប់ពួកគេ ហើយវាជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត ។

وَلِلَّهِ جُنُودُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ وَكَانَ ٱللَّهُ عَزِيزًا حَكِيمًا ﴿٧﴾

៧-ហើយកងទ័ពនៃមេឃជាច្រើន និងផែនដី គឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត ។

إِنَّآ أَرۡسَلۡنَٰكَ شَٰهِدٗا وَمُبَشِّرٗا وَنَذِيرٗا ﴿٨﴾

៨-ពិតប្រាកដណាស់ យើងបានបញ្ជូនអ្នក( មូហាំម៉ាត់) ជាអ្នកធ្វើសាក្សី និងផ្ដល់ដំណឹងរីករាយ និងជាអ្នកដាស់តឿនព្រមាន ។

لِّتُؤۡمِنُواْ بِٱللَّهِ وَرَسُولِهِۦ وَتُعَزِّرُوهُ وَتُوَقِّرُوهُ وَتُسَبِّحُوهُ بُكۡرَةٗ وَأَصِيلًا ﴿٩﴾

៩-ដើម្បីឱ្យពួកអ្នកមានជំនឿលើអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់( មូហាំម៉ាត់) និងជួយជ្រោមជ្រែងសាសនារបស់ទ្រង់ និងលើកតម្កើងទ្រង់ ហើយនិងសរសើរទ្រង់ទាំងព្រឹកទាំងល្ងាច ។

إِنَّ ٱلَّذِينَ يُبَايِعُونَكَ إِنَّمَا يُبَايِعُونَ ٱللَّهَ

១០-ពិតប្រាកដណាស់ បណ្ដាអ្នកដែលធ្វើកិច្ចព្រមព្រៀង( នៅ

يَدُ ٱللَّهِ فَوۡقَ أَيۡدِيهِمۡۚ فَمَن نَّكَثَ فَإِنَّمَا
يَنكُثُ عَلَىٰ نَفۡسِهِۦۖ وَمَنۡ أَوۡفَىٰ بِمَا عَٰهَدَ
عَلَيۡهُ ٱللَّهَ فَسَيُؤۡتِيهِ أَجۡرًا عَظِيمٗا ١٠

ថ្ងៃអាល់ហ៊ូទៃពីយ៉ះ) ជាមួយអ្នក( មូហាំម៉ាត់) តាមពិតគឺពួកគេធ្វើកិច្ចព្រមព្រៀងជាមួយនឹងអល់ឡោះ ។ ដៃរបស់អល់ឡោះគ្របដណ្តប់លើដៃរបស់ពួកគេ ។ ដូច្នេះ អ្នកណាហើយក្បត់នូវកិច្ចព្រមព្រៀងនោះ គឺពិតប្រាកដណាស់ គេក្បត់ចំពោះខ្លួនឯង ។ ហើយអ្នកណាដែលបំពេញនូវអ្វីដែលបានសន្យាចំពោះអល់ឡោះនោះ គឺទ្រង់នឹងប្រទានឱ្យគេនូវផលបុណ្យយ៉ាងធំធេង ។

سَيَقُولُ لَكَ ٱلۡمُخَلَّفُونَ مِنَ ٱلۡأَعۡرَابِ
شَغَلَتۡنَآ أَمۡوَٰلُنَا وَأَهۡلُونَا فَٱسۡتَغۡفِرۡ لَنَاۚ
يَقُولُونَ بِأَلۡسِنَتِهِم مَّا لَيۡسَ فِي قُلُوبِهِمۡۚ قُلۡ
فَمَن يَمۡلِكُ لَكُم مِّنَ ٱللَّهِ شَيۡـًٔا إِنۡ أَرَادَ
بِكُمۡ ضَرًّا أَوۡ أَرَادَ بِكُمۡ نَفۡعَۢاۚ بَلۡ كَانَ ٱللَّهُ بِمَا
تَعۡمَلُونَ خَبِيرَۢا ١١

១១-ពួកដែលត្រូវគេទៅចោល( មិនបានទៅហ៊ូទៃពីយ៉ះ) អំពីពួកអារ៉ាប់ជនបទនឹងនិយាយទៅកាន់អ្នក( មូហាំម៉ាត់) ថា: ទ្រព្យសម្បត្តិរបស់ពួកយើង និងក្រុមគ្រួសាររបស់ពួកយើងបានធ្វើឱ្យពួកយើងរវល់ ដូច្នេះសូមអ្នកសុំអភ័យទោសពីអល់ឡោះឱ្យពួកយើងផង ។ ពួកគេគ្រាន់តែនិយាយដោយអណ្តាតរបស់ពួកគេនូវអ្វីដែលគ្មាននៅក្នុងចិត្តរបស់ពួកគេប៉ុណ្ណោះ ។ ចូរអ្នកពោលថា: តើមានអ្នកណាម្នាក់អាចហាមឃាត់អល់ឡោះចំពោះអ្វីមួយឱ្យពួកអ្នកប្រសិនបើទ្រង់ចង់ឱ្យពួកអ្នកមានគ្រោះថ្នាក់ ឬទ្រង់ចង់ឱ្យពួកអ្នកទទួលបានផលល្អនោះ? ផ្ទុយទៅវិញ អល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលដែលពួកអ្នកប្រព្រឹត្ត ។

بَلۡ ظَنَنتُمۡ أَن لَّن يَنقَلِبَ ٱلرَّسُولُ وَٱلۡمُؤۡمِنُونَ
إِلَىٰٓ أَهۡلِيهِمۡ أَبَدٗا وَزُيِّنَ ذَٰلِكَ فِي قُلُوبِكُمۡ
وَظَنَنتُمۡ ظَنَّ ٱلسَّوۡءِ وَكُنتُمۡ قَوۡمَۢا
بُورٗا ١٢

១២-ផ្ទុយទៅវិញ ពួកអ្នកបាននឹកស្មានថា: អ្នកនាំសារ( មូហាំម៉ាត់) និងបណ្តាអ្នកដែលមានជំនឿនឹងមិនវិលត្រឡប់មកកាន់គ្រួសាររបស់ពួកគេវិញជាដាច់ខាត ។ ហើយគេ( ស្ហៃតន) បានលំអរឿងនោះនៅក្នុងចិត្តរបស់ពួកអ្នក ហើយពួកអ្នកបានគិតអាក្រក់( ថាអល់ឡោះមិនជួយមូហាំម៉ាត់ និងអ្នកដែលមានជំនឿឡើយ) ហើយពួកអ្នកជាក្រុមដែលវិនាសអន្តរាយ ។

وَمَن لَّمۡ يُؤۡمِنۢ بِٱللَّهِ وَرَسُولِهِۦ فَإِنَّآ أَعۡتَدۡنَا
لِلۡكَٰفِرِينَ سَعِيرٗا ١٣

១៣-ហើយអ្នកណាដែលគ្មានជំនឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់( មូហាំម៉ាត់) នោះ ពិតប្រាកដណាស់ យើងបានរៀបចំសម្រាប់ពួកដែលគ្មានជំនឿនូវនរកដែលឆេះសន្ធោសន្ធៅ ។

وَلِلَّهِ مُلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ يَغۡفِرُ لِمَن
يَشَآءُ وَيُعَذِّبُ مَن يَشَآءُۚ وَكَانَ ٱللَّهُ
غَفُورٗا رَّحِيمٗا ١٤

១៤-ហើយការគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី គឺជាកម្មសិទ្ធិរបស់អល់ឡោះ ។ ទ្រង់អភ័យទោសឱ្យអ្នកណាដែលទ្រង់មានចេតនា ហើយទ្រង់ក៏ធ្វើទារុណកម្មចំពោះអ្នកណាដែលទ្រង់

មានចេតនាដែរ។ ហើយអល់ឡោះ មហាអភ័យទោស មហាអាណិតស្រឡាញ់។

سَيَقُولُ ٱلْمُخَلَّفُونَ إِذَا ٱنطَلَقْتُمْ إِلَىٰ مَغَانِمَ لِتَأْخُذُوهَا ذَرُونَا نَتَّبِعْكُمْ ۖ يُرِيدُونَ أَن يُبَدِّلُوا۟ كَلَـٰمَ ٱللَّهِ ۚ قُل لَّن تَتَّبِعُونَا كَذَٰلِكُمْ قَالَ ٱللَّهُ مِن قَبْلُ ۖ فَسَيَقُولُونَ بَلْ تَحْسُدُونَنَا ۚ بَلْ كَانُوا۟ لَا يَفْقَهُونَ إِلَّا قَلِيلًا ﴿١٥﴾

១៥-ពួកដែលត្រូវគេទៅចោល នៅពេលដែលពួកអ្នក(អ្នកមានជំនឿ)ធ្វើដំណើរទៅកាន់ជ័យភណ្ឌ(សមរភូមិខយពើរ) ដើម្បីយកវានោះនឹងនិយាយថា: សូមអនុញ្ញាតឱ្យពួកយើងទៅជាមួយពួកអ្នកផង។ ពួកគេចង់ផ្លាស់ប្តូរនូវពាក្យសំដីរបស់អល់ឡោះ។ ចូរអ្នក(មូហាំម៉ាត់)ពោលថា: ពួកអ្នកមិនអាចទៅតាមពួកយើងបានឡើយ។ ដូច្នោះហើយអល់ឡោះបានមានបន្ទូលពីមុនមក(តាមពិតជ័យភណ្ឌខយពើរជាចំណែកសម្រាប់អ្នកដែលចូលរួមធ្វើកិច្ចព្រមព្រៀងអាល់ហូទៃពីយ៉ះប៉ុណ្ណោះ)។ ហើយពួកគេនឹងនិយាយថា: តាមពិតពួកអ្នកច្រណែនឈ្នានីសនឹងពួកយើង។ ផ្ទុយទៅវិញ ពួកគេមិនយល់ឡើយ លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ។

قُل لِّلْمُخَلَّفِينَ مِنَ ٱلْأَعْرَابِ سَتُدْعَوْنَ إِلَىٰ قَوْمٍ أُو۟لِى بَأْسٍ شَدِيدٍ تُقَـٰتِلُونَهُمْ أَوْ يُسْلِمُونَ ۖ فَإِن تُطِيعُوا۟ يُؤْتِكُمُ ٱللَّهُ أَجْرًا حَسَنًا ۖ وَإِن تَتَوَلَّوْا۟ كَمَا تَوَلَّيْتُم مِّن قَبْلُ يُعَذِّبْكُمْ عَذَابًا أَلِيمًا ﴿١٦﴾

១៦-ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ពួកដែលត្រូវគេទៅចោលអំពីពួកអារ៉ាប់ជនបទថា: ពួកអ្នកនឹងត្រូវគេអំពាវនាវទៅ(ច្បាំងជាមួយ)ក្រុមដែលមានកម្លាំងខ្លាំងក្លាដែលពួកអ្នកនឹងត្រូវច្បាំងជាមួយពួកគេ ឬពួកគេប្រគល់ខ្លួន(ចូលសាសនាអ៊ីស្លាម)។ ហើយប្រសិនបើពួកអ្នកគោរពតាម(បទបញ្ជារបស់អល់ឡោះ) គឺអល់ឡោះនឹងផ្តល់ឱ្យពួកអ្នកនូវផលបុណ្យយ៉ាងល្អប្រសើរ។ តែប្រសិនបើពួកអ្នកប្រឆាំងដូចដែលពួកអ្នកបានប្រឆាំងពីមុនមកនោះ ទ្រង់នឹងធ្វើទារុណកម្មពួកអ្នកនូវទារុណកម្មដ៏ឈឺចាប់។

لَّيْسَ عَلَى ٱلْأَعْمَىٰ حَرَجٌ وَلَا عَلَى ٱلْأَعْرَجِ حَرَجٌ وَلَا عَلَى ٱلْمَرِيضِ حَرَجٌ ۗ وَمَن يُطِعِ ٱللَّهَ وَرَسُولَهُۥ يُدْخِلْهُ جَنَّـٰتٍ تَجْرِى مِن تَحْتِهَا ٱلْأَنْهَـٰرُ ۖ وَمَن يَتَوَلَّ يُعَذِّبْهُ عَذَابًا أَلِيمًا ﴿١٧﴾

១៧-គ្មានទោសពៃរ៍អ្វីចំពោះអ្នកដែលងងឹតភ្នែក និងគ្មានទោសពៃរ៍អ្វីចំពោះអ្នកដែលពិការឡើយ ហើយក៏គ្មានទោសពៃរ៍អ្វីចំពោះអ្នកដែលមានជម្ងឺ(ដោយពួកគេមិនបានចេញទៅធ្វើសង្គ្រាម)ដែរ។ ហើយអ្នកណាដែលគោរពប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់)គឺទ្រង់នឹងបញ្ចូលគេទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា។ តែអ្នកណាហើយដែលប្រឆាំងវិញ ទ្រង់នឹងធ្វើទារុណកម្មគេនូវទារុណកម្មដ៏ឈឺចាប់។

۞ لَّقَدْ رَضِىَ ٱللَّهُ عَنِ ٱلْمُؤْمِنِينَ إِذْ

១៨-ជាការពិតណាស់ អល់ឡោះបានយល់ព្រមចំពោះបណ្តា

يُبَايِعُونَكَ تَحْتَ ٱلشَّجَرَةِ فَعَلِمَ مَا فِى قُلُوبِهِمْ فَأَنزَلَ ٱلسَّكِينَةَ عَلَيْهِمْ وَأَثَٰبَهُمْ فَتْحًا قَرِيبًا ﴿١٨﴾

អ្នកមានជំនឿនៅពេលដែលពួកគេបានធ្វើកិច្ចព្រមព្រៀងជាមួយអ្នក( មូហាំម៉ាត់ ) នៅក្រោមដើមឈើ ហើយទ្រង់បានដឹងនូវអ្វីដែលមាននៅក្នុងចិត្តរបស់ពួកគេ និងបានបញ្ចុះភាពនឹងនរទៅលើពួកគេ ហើយទ្រង់ប្រទានឱ្យពួកគេនូវជ័យជំនះក្នុងពេលឆាប់ៗ ។

وَمَغَانِمَ كَثِيرَةً يَأْخُذُونَهَا ۗ وَكَانَ ٱللَّهُ عَزِيزًا حَكِيمًا ﴿١٩﴾

១៩-និងជ័យភណ្ឌជាច្រើនទៀតដែលពួកគេនឹងយកវា( ពីពួកយ៉ាហ៊ូទីនៅខយពើរ ) ។ ហើយអល់ឡោះមហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

وَعَدَكُمُ ٱللَّهُ مَغَانِمَ كَثِيرَةً تَأْخُذُونَهَا فَعَجَّلَ لَكُمْ هَٰذِهِۦ وَكَفَّ أَيْدِىَ ٱلنَّاسِ عَنكُمْ وَلِتَكُونَ ءَايَةً لِّلْمُؤْمِنِينَ وَيَهْدِيَكُمْ صِرَٰطًا مُّسْتَقِيمًا ﴿٢٠﴾

២០-អល់ឡោះបានសន្យាជាមួយពួកអ្នកនូវជ័យភណ្ឌជាច្រើនដែលពួកអ្នកនឹងរឹបអូសវា និងឱ្យពួកអ្នកយកវាយ៉ាងឆាប់រហ័សបំផុត ។ ហើយទ្រង់បានរារាំងពួកអ្នកពីដៃមនុស្សទាំងឡាយ( ក្នុងការវាយតបចំពោះពួកអ្នក ) និងដើម្បីឱ្យវាក្លាយជាភស្តុតាងសម្រាប់បណ្តាអ្នកដែលមានជំនឿ និងដើម្បីទ្រង់នឹងចង្អុលបង្ហាញពួកអ្នកនូវមាគ៌ាដែលត្រឹមត្រូវ ។

وَأُخْرَىٰ لَمْ تَقْدِرُوا۟ عَلَيْهَا قَدْ أَحَاطَ ٱللَّهُ بِهَا ۚ وَكَانَ ٱللَّهُ عَلَىٰ كُلِّ شَىْءٍ قَدِيرًا ﴿٢١﴾

២១-ហើយ( ជ័យជំនះ និងជ័យភណ្ឌ ) ផ្សេងៗទៀតដែលពួកអ្នកនៅមិនទាន់ទទួលវាបាន គឺអល់ឡោះបានកំណត់វារួចជាស្រេច ។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

وَلَوْ قَٰتَلَكُمُ ٱلَّذِينَ كَفَرُوا۟ لَوَلَّوُا۟ ٱلْأَدْبَٰرَ ثُمَّ لَا يَجِدُونَ وَلِيًّا وَلَا نَصِيرًا ﴿٢٢﴾

២២-ហើយប្រសិនបើពួកដែលប្រឆាំងបានច្បាំងជាមួយពួកអ្នក ពួកគេពិតជានឹងរត់ត្រឡប់ទៅក្រោយវិញ( បរាជ័យ ) ជាមិនខាន ។ បន្ទាប់មកពួកគេគ្មានអ្នកគាំពារ និងគ្មានអ្នកជួយឡើយ ។

سُنَّةَ ٱللَّهِ ٱلَّتِى قَدْ خَلَتْ مِن قَبْلُ ۖ وَلَن تَجِدَ لِسُنَّةِ ٱللَّهِ تَبْدِيلًا ﴿٢٣﴾

២៣-នោះគឺជាមាគ៌ា( ច្បាប់ ) របស់អល់ឡោះដែលបានកន្លងផុតទៅតាំងពីមុនមកហើយ ។ ហើយអ្នកនឹងមិនអាចជួបប្រទះនូវការផ្លាស់ប្តូរនៃមាគ៌ារបស់អល់ឡោះឡើយ ។

وَهُوَ ٱلَّذِى كَفَّ أَيْدِيَهُمْ عَنكُمْ وَأَيْدِيَكُمْ عَنْهُم بِبَطْنِ مَكَّةَ مِنۢ بَعْدِ أَنْ أَظْفَرَكُمْ عَلَيْهِمْ ۚ وَكَانَ ٱللَّهُ بِمَا تَعْمَلُونَ بَصِيرًا ﴿٢٤﴾

២៤-ហើយទ្រង់ជាអ្នកដែលបានរារាំងពួកអ្នកពីដៃរបស់ពួកគេ ( ពួកមូស្ហីរីគីន ) ហើយក៏ជាអ្នកដែលបានរារាំងពួកគេពីដៃរបស់ពួកអ្នកនៅចំកណ្តាលក្រុងម៉ាក្កះក្រោយពេលដែលទ្រង់បានធ្វើឱ្យពួកអ្នកទទួលជ័យជំនះលើពួកគេវិញដែរ ។ ហើយអល់ឡោះឃើញបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

هُمُ ٱلَّذِينَ كَفَرُواْ وَصَدُّوكُمۡ عَنِ
ٱلۡمَسۡجِدِ ٱلۡحَرَامِ وَٱلۡهَدۡيَ مَعۡكُوفًا أَن يَبۡلُغَ
مَحِلَّهُۥۚ وَلَوۡلَا رِجَالٞ مُّؤۡمِنُونَ وَنِسَآءٞ مُّؤۡمِنَٰتٞ
لَّمۡ تَعۡلَمُوهُمۡ أَن تَطَـُٔوهُمۡ فَتُصِيبَكُم مِّنۡهُم
مَّعَرَّةُۢ بِغَيۡرِ عِلۡمٖۖ لِّيُدۡخِلَ ٱللَّهُ فِي رَحۡمَتِهِۦ مَن
يَشَآءُۚ لَوۡ تَزَيَّلُواْ لَعَذَّبۡنَا ٱلَّذِينَ كَفَرُواْ
مِنۡهُمۡ عَذَابًا أَلِيمًا ٢٥

២៥-ពួកគេ(ពួកមូស្ហ្វរីគីន)ជាពួកដែលបានប្រឆាំង(នឹងអល់ឡោះ) និងបានរារាំងពួកអ្នកមិនឱ្យចូលទៅក្នុងម៉ាស្ជិទហារ៉ម និងបានហាមឃាត់មិនឱ្យមានការសម្លេះសត្វ(គូរហ្ពាន)នៅកន្លែងរបស់វា។ ហើយប្រសិនបើគ្មានបុរស និងស្ត្រីដែលមានជំនឿដែលពួកអ្នកមិនស្គាល់ពួកគេទេនោះ ពួកអ្នកអាចនឹងសម្លាប់ពួកគេ ជាហេតុធ្វើឱ្យបាបកម្មធ្លាក់ទៅលើពួកអ្នកដោយមិនដឹងខ្លួនដោយសារតែពួកគេ(ដូច្នោះហើយបានជាទ្រង់រារាំងពួកអ្នក) ។ដើម្បីអល់ឡោះនឹងបញ្ចូលអ្នកណាដែលទ្រង់មានចេតនាទៅក្នុងក្តីមេត្តាករុណារបស់ទ្រង់។ ប្រសិនបើពួកគេនៅឱ្យដាច់ពីគ្នា(រវាងអ្នកមានជំនឿ និងអ្នកគ្មានជំនឿ)នោះ យើងប្រាកដជានឹងធ្វើទារុណកម្មពួកដែលគ្មានជំនឿក្នុងចំណោមពួកគេនូវទារុណកម្មដ៏ឈឺចាប់។

إِذۡ جَعَلَ ٱلَّذِينَ كَفَرُواْ فِي قُلُوبِهِمُ ٱلۡحَمِيَّةَ
حَمِيَّةَ ٱلۡجَٰهِلِيَّةِ فَأَنزَلَ ٱللَّهُ سَكِينَتَهُۥ عَلَىٰ
رَسُولِهِۦ وَعَلَى ٱلۡمُؤۡمِنِينَ وَأَلۡزَمَهُمۡ
كَلِمَةَ ٱلتَّقۡوَىٰ وَكَانُوٓاْ أَحَقَّ بِهَا وَأَهۡلَهَاۚ
وَكَانَ ٱللَّهُ بِكُلِّ شَيۡءٍ عَلِيمٗا ٢٦

២៦-(ចូរចងចាំ)នៅពេលដែលពួកគ្មានជំនឿបានបង្កើនភាពក្រអឺតក្រទមនៅក្នុងចិត្តរបស់ពួកគេដែលជាភាពក្រអឺតក្រទមនៃសម័យល្ងង់ខ្លៅ(មុនសាសនាអ៊ីស្លាមមកដល់)នោះ អល់ឡោះបានបញ្ចុះភាពនឹងនរទៅលើអ្នកនាំសាររបស់ទ្រង់ និងទៅលើបណ្តាអ្នកដែលមានជំនឿ។ ហើយទ្រង់បានដាក់បញ្ញតិទៅលើពួកគេនូវពាក្យកោតខ្លាច[1] ហើយពួកគេជាអ្នកដែលសក្តិសមបំផុតនឹងវា និងជាអ្នកគ្រប់គ្រងវា។ ហើយអល់ឡោះដឹងបំផុតនូវរាល់អ្វីៗទាំងអស់។

لَّقَدۡ صَدَقَ ٱللَّهُ رَسُولَهُ ٱلرُّءۡيَا بِٱلۡحَقِّۖ
لَتَدۡخُلُنَّ ٱلۡمَسۡجِدَ ٱلۡحَرَامَ إِن شَآءَ ٱللَّهُ
ءَامِنِينَ مُحَلِّقِينَ رُءُوسَكُمۡ وَمُقَصِّرِينَ لَا
تَخَافُونَۖ فَعَلِمَ مَا لَمۡ تَعۡلَمُواْ فَجَعَلَ مِن
دُونِ ذَٰلِكَ فَتۡحٗا قَرِيبًا ٢٧

២៧-ជាការពិតណាស់ អល់ឡោះបានធ្វើឱ្យសុបិនអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់)ក្លាយជាការពិត គឺពួកអ្នកពិតជានឹងចូលទៅក្នុងម៉ាស្ជិតហារ៉ម(ទឹកដីម៉ាក្កះ)ដោយសុខសន្តិភាព ដោយពួកអ្នកកោរ និងកាត់សក់របស់ពួកអ្នកដោយមិនខ្លាចអ្វីឡើយ ប្រសិនបើទ្រង់មានចេតនា។ ហើយទ្រង់ដឹងនូវអ្វីដែលពួកអ្នកមិនដឹង។ ហើយទ្រង់បានផ្តល់ក្រៅពីនោះ(ជ័យជំនះនៅខយពើរ) គឺជ័យជំនះដ៏ឆាប់ៗខាងមុខ(ជ័យជំនះនៅម៉ាក្កះ)។

هُوَ ٱلَّذِيٓ أَرۡسَلَ رَسُولَهُۥ بِٱلۡهُدَىٰ وَدِينِ

២៨-ទ្រង់ជាអ្នកដែលបានបញ្ជូនអ្នកនាំសាររបស់ទ្រង់(មូហាំ-

១-ពាក្យកោតខ្លាចគឺៈ គ្មានម្ចាស់ណាដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីអល់ឡោះឡើយ ហើយមូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះ។

ٱلْحَقِّ لِيُظْهِرَهُۥ عَلَى ٱلدِّينِ كُلِّهِۦ ۚ وَكَفَىٰ بِٱللَّهِ شَهِيدًا ﴿٢٨﴾

ម៉ាត់) ជាមួយនឹងការចង្អុលបង្ហាញ និងសាសនា(អ៊ិស្លាម) ដ៏ត្រឹមត្រូវ ដើម្បីបង្ហាញឥទ្ធិពលរបស់វាទៅលើសាសនាទាំងអស់។ គ្រប់គ្រាន់ហើយដែលអល់ឡោះជាសាក្សី។

مُّحَمَّدٌ رَّسُولُ ٱللَّهِ ۚ وَٱلَّذِينَ مَعَهُۥٓ أَشِدَّآءُ عَلَى ٱلْكُفَّارِ رُحَمَآءُ بَيْنَهُمْ ۖ تَرَىٰهُمْ رُكَّعًا سُجَّدًا يَبْتَغُونَ فَضْلًا مِّنَ ٱللَّهِ وَرِضْوَٰنًا ۖ سِيمَاهُمْ فِى وُجُوهِهِم مِّنْ أَثَرِ ٱلسُّجُودِ ۚ ذَٰلِكَ مَثَلُهُمْ فِى ٱلتَّوْرَىٰةِ ۚ وَمَثَلُهُمْ فِى ٱلْإِنجِيلِ كَزَرْعٍ أَخْرَجَ شَطْـَٔهُۥ فَـَٔازَرَهُۥ فَٱسْتَغْلَظَ فَٱسْتَوَىٰ عَلَىٰ سُوقِهِۦ يُعْجِبُ ٱلزُّرَّاعَ لِيَغِيظَ بِهِمُ ٱلْكُفَّارَ ۗ وَعَدَ ٱللَّهُ ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ مِنْهُم مَّغْفِرَةً وَأَجْرًا عَظِيمًۢا ﴿٢٩﴾

២៩-មូហាំម៉ាត់ជាអ្នកនាំសាររបស់អល់ឡោះ។ ហើយបណ្ដាអ្នកដែលនៅជាមួយគេ គឺមានភាពតឹងរឹងចំពោះពួកដែលប្រឆាំងមានក្ដីមេត្តាករុណារវាងពួកគេ(អ្នកមានជំនឿ)។ អ្នក(មូហាំម៉ាត់) នឹងឃើញពួកគេ(អ្នកមានជំនឿ) ក្រាបស៊ូជូត ដើម្បីស្វែងរកការប្រោសប្រទាន និងការទទួលស្គាល់ពីអល់ឡោះ។ សញ្ញាសំគាល់របស់ពួកគេគឺជិតជាប់នៅលើផ្ទៃមុខរបស់ពួកគេអំពីស្លាកស្នាមនៃការស៊ូជូត។ ទាំងនោះគឺជាលក្ខណៈរបស់ពួកគេដែលមាន(រៀបរាប់) នៅក្នុងគម្ពីរតាវ៉រ៉ត។ តែលក្ខណៈរបស់ពួកគេដែលមាននៅក្នុងគម្ពីរអ៊ិញជីលវិញគឺប៊ីដូចជារុក្ខជាតិដែលបញ្ចេញពន្លករបស់វា ក្រោយមកពន្លកនោះក៏រឹងមាំ ហើយក្លាយជាធំ និងដុះត្រង់ឡើងនៅលើដើមរបស់វាដែលធ្វើឱ្យកសិករទាំងឡាយមានការពេញចិត្ត។(ការប្រៀបធៀបដូច្នេះ) ដើម្បីវាធ្វើឱ្យពួកដែលប្រឆាំងទាំងនោះខឹងសម្បាទៅលើពួកគេ(អ្នកមានជំនឿ)។ អល់ឡោះបានសន្យាចំពោះបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវក្នុងចំណោមពួកគេនូវការអភ័យទោស និងផលបុណ្យដ៏ធំធេង។

## سورة الحجرات

## ជំពូកអាល់ហ៊ូជូរ៉ត

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ لَا تُقَدِّمُوا۟ بَيْنَ يَدَىِ ٱللَّهِ وَرَسُولِهِۦ ۖ وَٱتَّقُوا۟ ٱللَّهَ ۚ إِنَّ ٱللَّهَ سَمِيعٌ عَلِيمٌ ﴿١﴾

១-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរកុំធ្វើការវិនិច្ឆ័យមុននឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់) ឱ្យសោះ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ។ ពិតប្រាកដណាស់ អល់ឡោះមហាឮ មហាដឹង។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ لَا تَرْفَعُوٓا۟ أَصْوَٰتَكُمْ فَوْقَ صَوْتِ ٱلنَّبِىِّ وَلَا تَجْهَرُوا۟ لَهُۥ بِٱلْقَوْلِ كَجَهْرِ بَعْضِكُمْ لِبَعْضٍ أَن تَحْبَطَ أَعْمَٰلُكُمْ وَأَنتُمْ

២-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំលើកសំឡេងរបស់ពួកអ្នកខ្លាំងជាងសំឡេងរបស់ណាពី ហើយកុំបន្លឺសំឡេងខ្លាំងៗទៅកាន់គាត់ដូចជាការបន្លឺសំឡេងខ្លាំងៗរបស់ពួកអ្នកទៅកាន់គ្នាឱ្យសោះ ក្រែងលោអំពើល្អទាំងឡាយរបស់ពួកអ្នកបាត់បង់ ដោយពួក

لَا تَشۡعُرُونَ ٢

អ្នកមិនដឹងខ្លួន។

إِنَّ ٱلَّذِينَ يَغُضُّونَ أَصۡوَٰتَهُمۡ عِندَ رَسُولِ ٱللَّهِ
أُوْلَٰٓئِكَ ٱلَّذِينَ ٱمۡتَحَنَ ٱللَّهُ قُلُوبَهُمۡ لِلتَّقۡوَىٰۚ
لَهُم مَّغۡفِرَةٞ وَأَجۡرٌ عَظِيمٌ ٣

៣-ពិតប្រាកដណាស់ បណ្ដាអ្នកដែលបន្ថយសំឡេងរបស់ពួកគេនៅចំពោះមុខអ្នកនាំសាររបស់អល់ឡោះ អ្នកទាំងនោះហើយដែលអល់ឡោះបានសាកល្បងនៅក្នុងចិត្តរបស់ពួកគេដើម្បីឱ្យមានការកោតខ្លាច។ ពួកគេនឹងទទួលបានការអភ័យទោស និងផលបុណ្យដ៏ធំធេង។

إِنَّ ٱلَّذِينَ يُنَادُونَكَ مِن وَرَآءِ ٱلۡحُجُرَٰتِ
أَكۡثَرُهُمۡ لَا يَعۡقِلُونَ ٤

៤-ពិតប្រាកដណាស់ ពួកដែលស្រែកហៅអ្នក(មូហាំម៉ាត់)នៅពីក្រោយលំនៅដ្ឋាន គឺពួកគេភាគច្រើនមិនយល់ឡើយ។

وَلَوۡ أَنَّهُمۡ صَبَرُواْ حَتَّىٰ تَخۡرُجَ إِلَيۡهِمۡ لَكَانَ خَيۡرٗا
لَّهُمۡۚ وَٱللَّهُ غَفُورٞ رَّحِيمٞ ٥

៥-ហើយប្រសិនបើពួកគេអត់ធ្មត់(រង់ចាំ)រហូតដល់អ្នក(មូហាំម៉ាត់)ចេញទៅជួបពួកគេ គឺវាប្រសើរបំផុតសម្រាប់ពួកគេ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِن جَآءَكُمۡ فَاسِقُۢ بِنَبَإٖ
فَتَبَيَّنُوٓاْ أَن تُصِيبُواْ قَوۡمَۢا بِجَهَٰلَةٖ فَتُصۡبِحُواْ
عَلَىٰ مَا فَعَلۡتُمۡ نَٰدِمِينَ ٦

៦-ឱបណ្ដាអ្នកដែលមានជំនឿ! ប្រសិនបើមានអ្នកល្មើសច្បាប់អល់ឡោះនាំដំណឹងអ្វីមួយមកប្រាប់ពួកអ្នក ចូរពួកអ្នកពិនិត្យឱ្យបានច្បាស់លាស់ ក្រែងលោពួកអ្នកបង្កគ្រោះថ្នាក់ដល់ក្រុមមួយដោយមិនដឹង ហើយពួកអ្នកនឹងមានវិប្បដិសារីទៅលើអ្វីដែលពួកអ្នកបានប្រព្រឹត្តនោះ។

وَٱعۡلَمُوٓاْ أَنَّ فِيكُمۡ رَسُولَ ٱللَّهِۚ لَوۡ يُطِيعُكُمۡ فِي
كَثِيرٖ مِّنَ ٱلۡأَمۡرِ لَعَنِتُّمۡ وَلَٰكِنَّ ٱللَّهَ حَبَّبَ إِلَيۡكُمُ
ٱلۡإِيمَٰنَ وَزَيَّنَهُۥ فِي قُلُوبِكُمۡ وَكَرَّهَ إِلَيۡكُمُ
ٱلۡكُفۡرَ وَٱلۡفُسُوقَ وَٱلۡعِصۡيَانَۚ أُوْلَٰٓئِكَ هُمُ
ٱلرَّٰشِدُونَ ٧

៧-ហើយពួកអ្នកត្រូវដឹងថាៈ ពិតប្រាកដណាស់ នៅក្នុងចំណោមពួកអ្នក គឺមានអ្នកនាំសាររបស់អល់ឡោះ(មូហាំម៉ាត់)។ ប្រសិនបើគាត់ធ្វើតាមបញ្ជាពួកអ្នកនូវកិច្ចការភាគច្រើននោះ ពួកអ្នកពិតជាមានការលំបាកជាមិនខាន។ ក៏ប៉ុន្តែអល់ឡោះបានធ្វើឱ្យពួកអ្នកស្រឡាញ់ភាពមានជំនឿ និងបានលំអវានៅក្នុងចិត្តរបស់ពួកអ្នក ហើយទ្រង់បានធ្វើឱ្យពួកអ្នកស្អប់ខ្ពើមចំពោះភាពគ្មានជំនឿ និងការល្មើសច្បាប់ ហើយនិងបាបកម្មទាំងឡាយផងដែរ។ អ្នកទាំងនោះហើយគឺជាអ្នកដែលស្ថិតលើមាគ៌ាដ៏ត្រឹមត្រូវ។

فَضۡلٗا مِّنَ ٱللَّهِ وَنِعۡمَةٗۚ وَٱللَّهُ عَلِيمٌ حَكِيمٞ ٨

៨-គឺជាការប្រោសប្រទាន និងជានៀកម៉ាត់ពីអល់ឡោះ។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

وَإِن طَآئِفَتَانِ مِنَ ٱلۡمُؤۡمِنِينَ ٱقۡتَتَلُواْ

៩-ហើយប្រសិនបើមានពីរក្រុមក្នុងចំណោមអ្នកមានជំនឿ

فَأَصۡلِحُواْ بَيۡنَهُمَاۖ فَإِنۢ بَغَتۡ إِحۡدَىٰهُمَا عَلَى
ٱلۡأُخۡرَىٰ فَقَٰتِلُواْ ٱلَّتِي تَبۡغِي حَتَّىٰ تَفِيٓءَ إِلَىٰٓ
أَمۡرِ ٱللَّهِۚ فَإِن فَآءَتۡ فَأَصۡلِحُواْ بَيۡنَهُمَا بِٱلۡعَدۡلِ
وَأَقۡسِطُوٓاْۖ إِنَّ ٱللَّهَ يُحِبُّ ٱلۡمُقۡسِطِينَ ٩

ច្បាំងគ្នា ចូរពួកអ្នកផ្សះផ្សាររវាងពួកគេ ។ តែប្រសិនបើក្រុមមួយបានបំពានទៅលើក្រុមមួយទៀត ចូរពួកអ្នកច្បាំងតទល់នឹងក្រុមដែលបំពាននោះ រហូតទាល់តែក្រុមនោះត្រឡប់ទៅរកបទបញ្ជារបស់អល់ឡោះវិញ ។ ហើយប្រសិនបើពួកគេបានត្រឡប់វិញនោះ ចូរពួកអ្នកផ្សះផ្សាររវាងពួកគេទាំងពីរក្រុមដោយយុត្តិធម៌ ហើយចូរពួកអ្នកប្រកាន់នូវភាពយុត្តិធម៌ ។ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្តាអ្នកដែលប្រកាន់យុត្តិធម៌ ។

إِنَّمَا ٱلۡمُؤۡمِنُونَ إِخۡوَةٞ فَأَصۡلِحُواْ بَيۡنَ
أَخَوَيۡكُمۡۚ وَٱتَّقُواْ ٱللَّهَ لَعَلَّكُمۡ تُرۡحَمُونَ ١٠

១០-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿគឺជាបងប្អូននឹងគ្នា( ក្នុងសាសនាអ៊ិស្លាម) ។ ដូច្នេះ ចូរពួកអ្នកផ្សះផ្សាររវាងបងប្អូនទាំងពីរក្រុមរបស់ពួកអ្នកចុះ ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ សង្ឃឹមថាពួកអ្នកនឹងត្រូវគេអាណិតស្រឡាញ់ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا يَسۡخَرۡ قَوۡمٞ مِّن قَوۡمٍ
عَسَىٰٓ أَن يَكُونُواْ خَيۡرٗا مِّنۡهُمۡ وَلَا نِسَآءٞ مِّن
نِّسَآءٍ عَسَىٰٓ أَن يَكُنَّ خَيۡرٗا مِّنۡهُنَّۖ وَلَا تَلۡمِزُوٓاْ
أَنفُسَكُمۡ وَلَا تَنَابَزُواْ بِٱلۡأَلۡقَٰبِۖ بِئۡسَ ٱلِٱسۡمُ
ٱلۡفُسُوقُ بَعۡدَ ٱلۡإِيمَٰنِۚ وَمَن لَّمۡ يَتُبۡ
فَأُوْلَٰٓئِكَ هُمُ ٱلظَّٰلِمُونَ ١١

១១-ឱបណ្តាអ្នកដែលមានជំនឿ! ចូរកុំឱ្យក្រុមមួយមើលងាយក្រុមមួយទៀតឱ្យសោះ ជួនកាលពួកគេ( ក្រុមដែលត្រូវគេមើលងាយនោះ) ល្អជាងពួកគេ( ក្រុមមើលងាយគេ) ។ ហើយកុំឱ្យស្ត្រីមើលងាយស្ត្រីដូចគ្នា ជួនកាលពួកនាង( ស្ត្រីដែលត្រូវគេមើលងាយនោះ) ល្អជាងពួកនាង( ស្ត្រីដែលមើលងាយគេ) ។ ហើយចូរពួកអ្នកកុំប្រមាថគ្នា និងកុំដាក់ងារគ្នាឱ្យសោះ ។ ការដាក់ងារមិនល្អក្រោយពីមានជំនឿហើយនោះ គឺអាក្រក់បំផុត ។ ហើយអ្នកណាដែលមិនបានសារភាពទោសកំហុស ពួកទាំងនោះគឺជាពួកដែលបំពាន ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱجۡتَنِبُواْ كَثِيرٗا مِّنَ ٱلظَّنِّ
إِنَّ بَعۡضَ ٱلظَّنِّ إِثۡمٞۖ وَلَا تَجَسَّسُواْ وَلَا
يَغۡتَب بَّعۡضُكُم بَعۡضًاۚ أَيُحِبُّ أَحَدُكُمۡ أَن
يَأۡكُلَ لَحۡمَ أَخِيهِ مَيۡتٗا فَكَرِهۡتُمُوهُۚ وَٱتَّقُواْ
ٱللَّهَۚ إِنَّ ٱللَّهَ تَوَّابٞ رَّحِيمٞ ١٢

១២-ឱបណ្តាអ្នកដែលមានជំនឿ! ចូរចៀសវាងឱ្យឆ្ងាយពីប្រការសង្ស័យ( ទៅលើអ្នកដែលមានជំនឿ) ។ ពិតប្រាកដណាស់ ការសង្ស័យមួយចំនួនគឺជាបាបកម្ម ។ ហើយចូរពួកអ្នកកុំស៊ើបការ( ប្រការដែលមិនល្អរបស់អ្នកមានជំនឿ) និងកុំនិយាយដើមគ្នាឱ្យសោះ ។ តើម្នាក់ក្នុងចំណោមពួកអ្នកចូលចិត្តស៊ីសាច់បងប្អូនរបស់គេដែលស្លាប់ឬ? ដូច្នេះពួកអ្នកពិតជាខ្ពើមវាមិនខាន ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកទទួលយកនូវការសារភាពទោសកំហុស មហាអាណិតស្រឡាញ់ ។

يَٰٓأَيُّهَا ٱلنَّاسُ إِنَّا خَلَقۡنَٰكُم مِّن ذَكَرٖ وَأُنثَىٰ

១៣-ឱមនុស្សលោក! ពិតប្រាកដណាស់ យើងបានបង្កើតពួក

وَجَعَلْنَٰكُمْ شُعُوبًا وَقَبَآئِلَ لِتَعَارَفُوٓاْۚ إِنَّ أَكْرَمَكُمْ عِندَ ٱللَّهِ أَتْقَىٰكُمْۚ إِنَّ ٱللَّهَ عَلِيمٌ خَبِيرٌ ١٣

អ្នកពីបុរសនិងស្ត្រី( អាដាំ និងហាវ៉ា) ហើយយើងធ្វើឱ្យពួកអ្នកមានជនជាតិ និងកុលសម្ព័ន្ធជាច្រើន ដើម្បីឱ្យពួកអ្នកស្គាល់គ្នាទៅវិញទៅមក ។ ពិតប្រាកដណាស់ អ្នកដែលថ្កុំថ្កើងជាងគេចំពោះ អល់ឡោះក្នុងចំណោមពួកអ្នក គឺអ្នកដែលកោតខ្លាចអល់ឡោះជាងគេក្នុងចំណោមពួកអ្នក ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹង មហាជ្រួតជ្រាប ។

۞ قَالَتِ ٱلْأَعْرَابُ ءَامَنَّاۖ قُل لَّمْ تُؤْمِنُواْ وَلَٰكِن قُولُوٓاْ أَسْلَمْنَا وَلَمَّا يَدْخُلِ ٱلْإِيمَٰنُ فِي قُلُوبِكُمْۖ وَإِن تُطِيعُواْ ٱللَّهَ وَرَسُولَهُۥ لَا يَلِتْكُم مِّنْ أَعْمَٰلِكُمْ شَيْـًٔاۚ إِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ ١٤

១៤-ពួកអារ៉ាប់ជនបទបាននិយាយថា: ពួកយើងមានជំនឿហើយ ។ ចូរអ្នក( មូហាំម៉ាត់) ពោលថា: ពួកអ្នកមិនទាន់មានជំនឿឡើយ តែពួកអ្នកត្រូវនិយាយថា: ពួកយើងបានចូលសាសនាអ៊ីស្លាមហើយ ខណៈដែលភាពមានជំនឿមិនទាន់ចូលទៅក្នុងចិត្តរបស់ពួកអ្នកនោះ ។ តែប្រសិនបើពួកអ្នកប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់វិញនោះ ទ្រង់នឹងមិនលុបបំបាត់នូវអ្វីដែលជាអំពើល្អរបស់ពួកអ្នកឡើយ ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

إِنَّمَا ٱلْمُؤْمِنُونَ ٱلَّذِينَ ءَامَنُواْ بِٱللَّهِ وَرَسُولِهِۦ ثُمَّ لَمْ يَرْتَابُواْ وَجَٰهَدُواْ بِأَمْوَٰلِهِمْ وَأَنفُسِهِمْ فِي سَبِيلِ ٱللَّهِۚ أُوْلَٰٓئِكَ هُمُ ٱلصَّٰدِقُونَ ١٥

១៥-តាមពិតបណ្ដាអ្នកដែលមានជំនឿគឺអ្នកដែលបានជឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ បន្ទាប់មកពួកគេមិនសង្ស័យហើយបានតស៊ូក្នុងមាគ៌ារបស់អល់ឡោះ ដោយទ្រព្យសម្បត្តិរបស់ពួកគេ និងខ្លួនប្រាណរបស់ពួកគេ ។ អ្នកទាំងនោះជាអ្នកដែលមានជំនឿយ៉ាងពិតប្រាកដ ។

قُلْ أَتُعَلِّمُونَ ٱللَّهَ بِدِينِكُمْ وَٱللَّهُ يَعْلَمُ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلْأَرْضِۚ وَٱللَّهُ بِكُلِّ شَيْءٍ عَلِيمٌ ١٦

១៦-ចូរអ្នក( មូហាំម៉ាត់) ពោលថា: តើពួកអ្នកកំពុងប្រាប់អល់ឡោះពីសាសនារបស់ពួកអ្នក ដោយអល់ឡោះដឹងនូវអ្វីដែលមាននៅលើមេឃជាច្រើនជាន់ និងផែនដីឬ? ហើយអល់ឡោះដឹងបំផុតនូវរាល់អ្វីៗទាំងអស់ ។

يَمُنُّونَ عَلَيْكَ أَنْ أَسْلَمُواْۖ قُل لَّا تَمُنُّواْ عَلَيَّ إِسْلَٰمَكُمۖ بَلِ ٱللَّهُ يَمُنُّ عَلَيْكُمْ أَنْ هَدَىٰكُمْ لِلْإِيمَٰنِ إِن كُنتُمْ صَٰدِقِينَ ١٧

១៧-ពួកគេចាត់ទុកថា ការចូលសាសនាអ៊ីស្លាមរបស់ពួកគេផ្ដល់ប្រយោជន៍ដល់អ្នក( មូហាំម៉ាត់) ។ ចូរអ្នកពោលថា: ពួកអ្នកកុំចាត់ទុកការចូលសាសនាអ៊ីស្លាមរបស់ពួកអ្នកផ្ដល់ប្រយោជន៍ដល់ខ្ញុំឱ្យសោះ ។ ផ្ទុយទៅវិញ អល់ឡោះទេដែលប្រទានទៀកម៉ាត់ដល់ពួកអ្នក ដោយទ្រង់បានចង្អុលបង្ហាញពួកអ្នកទៅរកភាពមានជំនឿ

ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតនោះ ។

១៨-ពិតប្រាកដណាស់ អល់ឡោះដឹងនូវប្រការអាថ៌កំបាំងនៃមេឃជាច្រើនជាន់ និងផែនដី ។ ហើយអល់ឡោះឃើញបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

إِنَّ ٱللَّهَ يَعْلَمُ غَيْبَ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۚ وَٱللَّهُ بَصِيرٌۢ بِمَا تَعْمَلُونَ ﴿١٨﴾

## ជំពូក កហ្វ

## سورة ق

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

១-កហ្វ ។ អល់ឡោះស្បថនឹងគម្ពីរគួរអានដែលមហាថ្កុំថ្កើង ។

قٓ ۚ وَٱلْقُرْءَانِ ٱلْمَجِيدِ ﴿١﴾

២-(ពួកគេមិនទទួលវាឡើយ) ផ្ទុយទៅវិញ ពួកគេមានការភ្ញាក់ផ្អើល ព្រោះតែអ្នកដាស់តឿនព្រមានម្នាក់ក្នុងចំណោមពួកគេបានមកដល់ពួកគេ ។ ហើយពួកដែលប្រឆាំងបាននិយាយថា: នេះជាប្រការមួយដ៏ចម្លែក ។

بَلْ عَجِبُوٓا۟ أَن جَآءَهُم مُّنذِرٌ مِّنْهُمْ فَقَالَ ٱلْكَٰفِرُونَ هَٰذَا شَىْءٌ عَجِيبٌ ﴿٢﴾

៣-តើនៅពេលដែលពួកយើងស្លាប់ ហើយពួកយើងបានក្លាយទៅជាដីនោះ (ពួកយើងអាចរស់ឡើងវិញបានឬ)? ការវិលត្រឡប់នោះមិនអាចកើតឡើងបានឡើយ ។

أَءِذَا مِتْنَا وَكُنَّا تُرَابًا ۖ ذَٰلِكَ رَجْعٌۢ بَعِيدٌ ﴿٣﴾

៤-តាមពិតយើងបានដឹងនូវអ្វី(រាងកាយ)ក្នុងចំណោមពួកគេដែលដីរំលាយ ។ ហើយយើងមានសៀវភៅកំណត់ត្រា ។

قَدْ عَلِمْنَا مَا تَنقُصُ ٱلْأَرْضُ مِنْهُمْ ۖ وَعِندَنَا كِتَٰبٌ حَفِيظٌۢ ﴿٤﴾

៥-ផ្ទុយទៅវិញពួកគេបានបដិសេធនឹងការពិត(គម្ពីរគួរអាន) នៅពេលដែលវាបានមកដល់ពួកគេ ។ ហើយពួកគេស្ថិតក្នុងភាពច្របូកច្របល់(មិនដឹងមួយណាខុសឬត្រូវឡើយ) ។

بَلْ كَذَّبُوا۟ بِٱلْحَقِّ لَمَّا جَآءَهُمْ فَهُمْ فِىٓ أَمْرٍ مَّرِيجٍ ﴿٥﴾

៦-ដូច្នេះ តើពួកគេមិនសម្លឹងមើលមេឃដែលនៅពីលើពួកគេទេឬ តើយើងបានបង្កើតវា និងបានតុបតែងវាដោយវាគ្មានការបែកប្រេះនោះយ៉ាងណា?

أَفَلَمْ يَنظُرُوٓا۟ إِلَى ٱلسَّمَآءِ فَوْقَهُمْ كَيْفَ بَنَيْنَٰهَا وَزَيَّنَّٰهَا وَمَا لَهَا مِن فُرُوجٍ ﴿٦﴾

៧-ហើយផែនដី យើងបានពង្រាបវា និងបានបង្កើតភ្នំជាច្រើននៅលើវា ហើយនិងបានបណ្ដុះនៅលើវានូវរុក្ខជាតិគ្រប់បែបយ៉ាងដ៏ស្រស់បំព្រង

وَٱلْأَرْضَ مَدَدْنَٰهَا وَأَلْقَيْنَا فِيهَا رَوَٰسِىَ وَأَنۢبَتْنَا فِيهَا مِن كُلِّ زَوْجٍۭ بَهِيجٍ ﴿٧﴾

៨-ដើម្បីឱ្យឃើញច្បាស់លាស់ និងជាការរំលឹកសម្រាប់រាល់ខ្ញុំ

تَبْصِرَةً وَذِكْرَىٰ لِكُلِّ عَبْدٍ مُّنِيبٍ ﴿٨﴾

របស់អល់ឡោះដែលសារភាពកំហុស ។

៩-ហើយយើងបានបញ្ចុះទឹកភ្លៀងដែលមានពរជ័យពីលើមេឃ រួចយើងបានបណ្ដុះចេញពីវានូវចំការដំណាំជាច្រើន និងប្រភេទធញ្ញជាតិដែលអាចច្រូតកាត់( ប្រមូលផល) បាន ។

១០-និងដើមល្មើខ្ពស់ស្គឹមស្គៃ ដែលមានចង្កោមផ្លែចាក់ស្រែះលើគ្នាជាជួរ ។

១១-ជាលាភសក្ការៈសម្រាប់ខ្ញុំរបស់អល់ឡោះ ។ ហើយយើងបានធ្វើឱ្យដីដែលស្លាប់( គ្មានជីជាតិ) មានជីវិត( មានជីជាតិ) ឡើងវិញដោយសារវា( ទឹកភ្លៀង) ។ ដូច្នោះដែរ យើងបានធ្វើឱ្យពួកអ្នករស់ឡើងវិញ( នៅថ្ងៃបរលោក) ។

១២-ក្រុមរបស់នូហ និងពួករ៉ស ហើយនិងសាមូដបានបដិសេធមុនពួកគេ ។

១៣-ហើយអាដ និងហ្វៀរអោន និងបងប្អូនរបស់លូត ។

១៤-និងអ្នកដែលរស់នៅអៃកាស់( ក្រុមរបស់ស្ហ៊ូអែប) ព្រមទាំងក្រុមទុបបាក់ ពួកទាំងនោះសុទ្ធតែបានបដិសេធនឹងបណ្ដាអ្នកនាំសារ ។ ដូច្នេះ ការសន្យាធ្វើទារុណកម្មរបស់យើងក៏បានធ្លាក់ទៅលើពួកគេ ។

១៥-ដូច្នេះ តើយើងគ្មានសមត្ថភាពចំពោះការបង្កើតជាលើកដំបូងឬ? ផ្ទុយទៅវិញ ពួកគេទេដែលស្ថិតក្នុងភាពសង្ស័យអំពីការបង្កើតសាជាថ្មីនោះ ។

១៦-ហើយជាការពិតណាស់ យើងបានបង្កើតមនុស្សលោក ដោយយើងដឹងច្បាស់នូវអ្វីៗដែលខ្លួនរបស់គេសញ្ជឹងគិតពីវា ។ ហើយយើងនៅជិត( ដឹង) ខ្លួនគេជាងសសៃកដែលតភ្ជាប់ទៅបេះដូងទៅទៀត ។

១៧-( ចូរចងចាំ) នៅពេលដែលម៉ាឡាអ៊ីកាត់ពីររូបកំពុងកត់ត្រា( អំពើល្អ និងអំពើអាក្រក់) ដោយអង្គុយនៅខាងស្ដាំ និងនៅ

وَنَزَّلۡنَا مِنَ ٱلسَّمَآءِ مَآءٗ مُّبَٰرَكٗا فَأَنۢبَتۡنَا بِهِۦ جَنَّٰتٖ وَحَبَّ ٱلۡحَصِيدِ ﴿٩﴾

وَٱلنَّخۡلَ بَاسِقَٰتٖ لَّهَا طَلۡعٞ نَّضِيدٞ ﴿١٠﴾

رِّزۡقٗا لِّلۡعِبَادِۖ وَأَحۡيَيۡنَا بِهِۦ بَلۡدَةٗ مَّيۡتٗاۚ كَذَٰلِكَ ٱلۡخُرُوجُ ﴿١١﴾

كَذَّبَتۡ قَبۡلَهُمۡ قَوۡمُ نُوحٖ وَأَصۡحَٰبُ ٱلرَّسِّ وَثَمُودُ ﴿١٢﴾

وَعَادٞ وَفِرۡعَوۡنُ وَإِخۡوَٰنُ لُوطٖ ﴿١٣﴾

وَأَصۡحَٰبُ ٱلۡأَيۡكَةِ وَقَوۡمُ تُبَّعٖۚ كُلّٞ كَذَّبَ ٱلرُّسُلَ فَحَقَّ وَعِيدِ ﴿١٤﴾

أَفَعَيِينَا بِٱلۡخَلۡقِ ٱلۡأَوَّلِۚ بَلۡ هُمۡ فِي لَبۡسٖ مِّنۡ خَلۡقٖ جَدِيدٖ ﴿١٥﴾

وَلَقَدۡ خَلَقۡنَا ٱلۡإِنسَٰنَ وَنَعۡلَمُ مَا تُوَسۡوِسُ بِهِۦ نَفۡسُهُۥۖ وَنَحۡنُ أَقۡرَبُ إِلَيۡهِ مِنۡ حَبۡلِ ٱلۡوَرِيدِ ﴿١٦﴾

إِذۡ يَتَلَقَّى ٱلۡمُتَلَقِّيَانِ عَنِ ٱلۡيَمِينِ وَعَنِ ٱلشِّمَالِ قَعِيدٞ ﴿١٧﴾

ខាងឆ្វេង ។

مَّا يَلۡفِظُ مِن قَوۡلٍ إِلَّا لَدَيۡهِ رَقِيبٌ عَتِيدٞ ١٨

១៨-រាល់ពាក្យសំដីដែលគេនិយាយចេញមក គឺមានអ្នកឃ្លាំមើល និងកត់ត្រា( ម៉ាឡាអ៊ីកាត់ ) ។

وَجَآءَتۡ سَكۡرَةُ ٱلۡمَوۡتِ بِٱلۡحَقِّۖ ذَٰلِكَ مَا كُنتَ مِنۡهُ تَحِيدُ ١٩

១៩-ហើយភាពឈឺចាប់នៃសេចក្ដីស្លាប់បានមកដល់យ៉ាងពិតប្រាកដ ។ នោះហើយជាអ្វីដែលអ្នក( មនុស្សលោក ) ធ្លាប់រត់គេចពីវា ។

وَنُفِخَ فِي ٱلصُّورِۚ ذَٰلِكَ يَوۡمُ ٱلۡوَعِيدِ ٢٠

២០-ហើយត្រែត្រូវបានគេផ្លុំ ។ នោះហើយគឺជាថ្ងៃនៃការសន្យាធ្វើទារុណកម្ម( ចំពោះពួកប្រឆាំង ) ។

وَجَآءَتۡ كُلُّ نَفۡسٖ مَّعَهَا سَآئِقٞ وَشَهِيدٞ ٢١

២១-ហើយគ្រប់ៗរូបមានអ្នកនាំផ្លូវ និងអ្នកធ្វើសាក្សី( ម៉ាឡាអ៊ីកាត់ ) បានមកជាមួយគេ( មកជួបអល់ឡោះនៅថ្ងៃបរលោក ) ។

لَّقَدۡ كُنتَ فِي غَفۡلَةٖ مِّنۡ هَٰذَا فَكَشَفۡنَا عَنكَ غِطَآءَكَ فَبَصَرُكَ ٱلۡيَوۡمَ حَدِيدٞ ٢٢

២២-ជាការពិតណាស់ អ្នកធ្លាប់ព្រងើយកន្តើយពីរឿងនេះ ។ ដូច្នេះ យើងបានលាតត្រដាងការបិទបាំងរបស់អ្នកឱ្យអ្នកឃើញ ហើយការមើលឃើញរបស់អ្នកនៅថ្ងៃនេះច្បាស់បំផុត ។

وَقَالَ قَرِينُهُۥ هَٰذَا مَا لَدَيَّ عَتِيدٌ ٢٣

២៣-ហើយម៉ាឡាអ៊ីកាត់ដែលនៅជាមួយគេបានពោលថា: នេះជាអ្វី( សៀវភៅកំណត់ត្រា ) ដែលគេត្រៀមរួចជាស្រេចនៅជាមួយខ្ញុំ ។

أَلۡقِيَا فِي جَهَنَّمَ كُلَّ كَفَّارٍ عَنِيدٖ ٢٤

២៤-( អល់ឡោះបានមានបន្ទូលទៅកាន់ម៉ាឡាអ៊ីកាត់ទាំងពីររូបនោះថា ) ចូរអ្នកទាំងពីរបោះពួកដែលប្រឆាំងចចេសរឹងរូសទៅក្នុងនរកជើហាន់ណាំ

مَّنَّاعٖ لِّلۡخَيۡرِ مُعۡتَدٖ مُّرِيبٍ ٢٥

២៥-ដែលពួកគេជាអ្នកកំណាញ់( ចំពោះការបរិច្ចាគ ) ក្នុងមាគ៌ាល្អ ជាអ្នកបំពាន ជាអ្នកសង្ស័យ( លើការសន្យានៃការតបស្នងរបស់អល់ឡោះ ) ចុះ ។

ٱلَّذِي جَعَلَ مَعَ ٱللَّهِ إِلَٰهًا ءَاخَرَ فَأَلۡقِيَاهُ فِي ٱلۡعَذَابِ ٱلشَّدِيدِ ٢٦

២៦-គឺអ្នកដែលបានយកម្ចាស់ផ្សេងមកគោរពសក្ការៈរួមជាមួយអល់ឡោះ ។ ដូច្នេះ ចូរអ្នកទាំងពីរបោះគេចូលទៅក្នុងទារុណកម្មដ៏ធ្ងន់ធ្ងរចុះ ។

۞قَالَ قَرِينُهُۥ رَبَّنَا مَآ أَطۡغَيۡتُهُۥ وَلَٰكِن كَانَ فِي ضَلَٰلِۭ بَعِيدٖ ٢٧

២៧-គូកនរបស់គេ( ស្ហៃតន ) បាននិយាយថា: ឱម្ចាស់របស់ពួកយើង! ខ្ញុំមិនបានធ្វើឱ្យគេវង្វេងឡើយ ក៏ប៉ុន្តែគេខ្លួនឯងទេដែលបាន

ស្ថិតក្នុងភាពវង្វេងដ៏សែនឆ្ងាយនោះ ។

២៨-ទ្រង់បានមានបន្ទូលថា: ពួកអ្នកកុំឈ្លោះប្រកែកគ្នានៅចំពោះមុខយើងឱ្យសោះ ព្រោះជាការពិតណាស់ យើងបានផ្តល់ការព្រមានចំពោះពួកអ្នករួចមកហើយ ។

២៩-បន្ទូលរបស់យើងមិនអាចគេកែប្រែបានឡើយ ហើយយើងក៏មិនមែនជាអ្នកបំពានលើខ្ញុំទាំងអស់របស់យើងដែរ ។

៣០-(ចូរចងចាំ) នៅថ្ងៃដែលយើងនឹងសួរទៅកាន់នរកជើហាន់ណាំថា: តើឯងពេញហើយឬនៅ? ពេលនោះនរកតបវិញថា: តើមានបន្ថែមទៀតដែរឬទេ?

៣១-ហើយឋានសួគ៌ត្រូវបានគេដាក់នៅជិតបណ្តាអ្នកដែលកោតខ្លាចអល់ឡោះ ដោយនៅមិនឆ្ងាយ(ពីពួកគេ) ឡើយ ។

៣២-(មានគេនិយាយទៅកាន់អ្នកឋានសួគ៌ថា) នេះគឺជាអ្វីដែលគេសន្យាជាមួយពួកអ្នក សម្រាប់រាល់អ្នកដែលសារភាពកំហុស និងអ្នកដែលថែរក្សាកាតព្វកិច្ចរបស់អល់ឡោះ ។

៣៣-គឺអ្នកដែលកោតខ្លាចម្ចាស់ដ៏មហាសប្បុរស ដោយអាថ៌កំបាំង និងនាំមកនូវដួងចិត្តដែលសារភាពកំហុស ។

៣៤-ចូរពួកអ្នកចូលទៅក្នុងវា(ឋានសួគ៌) ដោយសុខសន្តិភាពចុះ ។ នោះគឺជាថ្ងៃអមតៈ ។

៣៥-នៅក្នុងនោះ ពួកគេមានអ្វីៗដែលពួកគេប្រាថ្នាចង់បាន ហើយយើងនឹងបន្ថែមជាច្រើនទៀត ។

៣៦-ហើយយើងបានបំផ្លាញមុនពួកគេ(ពួកមូស្ររីគីន) ជាច្រើនជំនាន់មកហើយ ដែលពួកនោះមានកម្លាំងខ្លាំងក្លាជាងពួកគេទៅទៀត ហើយពួកនោះថែមទាំងបានដើរគ្រប់ទីកន្លែងទៀតផង ។ តើពួកគេមានកន្លែងគេចខ្លួន(ពីទារុណកម្ម) ឬទេ?

៣៧-ពិតប្រាកដណាស់ នៅក្នុងរឿងនោះ គឺជាការរំលឹកចំពោះអ្នកដែលមានចិត្ត(ចេះគិតពិចារណា) ឬបានយកចិត្តទុកដាក់ស្តាប់

قَالَ لَا تَخۡتَصِمُواْ لَدَيَّ وَقَدۡ قَدَّمۡتُ إِلَيۡكُم
بِٱلۡوَعِيدِ ﴿٢٨﴾

مَا يُبَدَّلُ ٱلۡقَوۡلُ لَدَيَّ وَمَآ أَنَا۠ بِظَلَّٰمٖ
لِّلۡعَبِيدِ ﴿٢٩﴾

يَوۡمَ نَقُولُ لِجَهَنَّمَ هَلِ ٱمۡتَلَأۡتِ وَتَقُولُ هَلۡ
مِن مَّزِيدٖ ﴿٣٠﴾

وَأُزۡلِفَتِ ٱلۡجَنَّةُ لِلۡمُتَّقِينَ غَيۡرَ بَعِيدٍ ﴿٣١﴾

هَٰذَا مَا تُوعَدُونَ لِكُلِّ أَوَّابٍ حَفِيظٖ ﴿٣٢﴾

مَّنۡ خَشِيَ ٱلرَّحۡمَٰنَ بِٱلۡغَيۡبِ وَجَآءَ بِقَلۡبٖ
مُّنِيبٍ ﴿٣٣﴾

ٱدۡخُلُوهَا بِسَلَٰمٖۖ ذَٰلِكَ يَوۡمُ ٱلۡخُلُودِ ﴿٣٤﴾

لَهُم مَّا يَشَآءُونَ فِيهَا وَلَدَيۡنَا مَزِيدٞ ﴿٣٥﴾

وَكَمۡ أَهۡلَكۡنَا قَبۡلَهُم مِّن قَرۡنٍ هُمۡ أَشَدُّ مِنۡهُم
بَطۡشٗا فَنَقَّبُواْ فِي ٱلۡبِلَٰدِ هَلۡ مِن مَّحِيصٍ ﴿٣٦﴾

إِنَّ فِي ذَٰلِكَ لَذِكۡرَىٰ لِمَن كَانَ لَهُۥ قَلۡبٌ أَوۡ

ដោយប្រុងប្រយ័ត្នបំផុត ។

أَلْقَى ٱلسَّمْعَ وَهُوَ شَهِيدٌ ﴿٣٧﴾

៣៨-ហើយជាការពិតណាស់យើងបានបង្កើតមេឃជាច្រើនជាន់ និងផែនដី ហើយនិងអ្វីៗដែលនៅរវាងវាទាំងពីរក្នុងរយៈពេលប្រាំមួយថ្ងៃ ហើយយើងពុំមានការនឿយហត់ឡើយ ។

وَلَقَدْ خَلَقْنَا ٱلسَّمَٰوَٰتِ وَٱلْأَرْضَ وَمَا بَيْنَهُمَا فِى سِتَّةِ أَيَّامٍ وَمَا مَسَّنَا مِن لُّغُوبٍ ﴿٣٨﴾

៣៩-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់ទៅលើអ្វីដែលពួកគេនិយាយចុះ និងត្រូវលើកតម្កើងដោយសរសើរចំពោះម្ចាស់របស់អ្នក មុននឹងព្រះអាទិត្យរះ និងមុនព្រះអាទិត្យលិច ។

فَٱصْبِرْ عَلَىٰ مَا يَقُولُونَ وَسَبِّحْ بِحَمْدِ رَبِّكَ قَبْلَ طُلُوعِ ٱلشَّمْسِ وَقَبْلَ ٱلْغُرُوبِ ﴿٣٩﴾

៤០-ហើយចូរអ្នកលើកតម្កើងទ្រង់នៅពេលយប់ និងក្រោយពីស៊ូជូត(ថ្វាយបង្គំ)រួច ។

وَمِنَ ٱلَّيْلِ فَسَبِّحْهُ وَأَدْبَٰرَ ٱلسُّجُودِ ﴿٤٠﴾

៤១-ហើយចូរអ្នកស្តាប់នៅថ្ងៃដែលម៉ាឡាអ៊ីកាត់ស្រែកហៅចេញពីកន្លែងដែលជិតបំផុត ។

وَٱسْتَمِعْ يَوْمَ يُنَادِ ٱلْمُنَادِ مِن مَّكَانٍ قَرِيبٍ ﴿٤١﴾

៤២-គឺជាថ្ងៃដែលពួកគេស្តាប់ឮសម្រែកយ៉ាងខ្លាំងដោយពិតប្រាកដ ។ នោះគឺជាថ្ងៃដែលមនុស្សលោកក្រោកចេញពីផ្នូរ ។

يَوْمَ يَسْمَعُونَ ٱلصَّيْحَةَ بِٱلْحَقِّ ۚ ذَٰلِكَ يَوْمُ ٱلْخُرُوجِ ﴿٤٢﴾

៤៣-ពិតប្រាកដណាស់ យើងជាអ្នកធ្វើឱ្យរស់ និងធ្វើឱ្យស្លាប់ ហើយមកចំពោះយើងជាកន្លែងវិលត្រឡប់ ។

إِنَّا نَحْنُ نُحْىِۦ وَنُمِيتُ وَإِلَيْنَا ٱلْمَصِيرُ ﴿٤٣﴾

៤៤-នៅថ្ងៃដែលដីបែកចេញពីពួកគេ(ពួកគេចេញពីផ្នូរ)យ៉ាងលឿនបំផុត ។ ការប្រមូលផ្តុំគ្នានោះ(នៅកន្លែងជំនុំជំរះ)គឺងាយស្រួលបំផុតសម្រាប់យើង ។

يَوْمَ تَشَقَّقُ ٱلْأَرْضُ عَنْهُمْ سِرَاعًا ۚ ذَٰلِكَ حَشْرٌ عَلَيْنَا يَسِيرٌ ﴿٤٤﴾

៤៥-យើងដឹងច្បាស់នូវអ្វីដែលពួកគេ(ពួកមូស្ហ្គីគីន)កំពុងនិយាយ ។ ហើយអ្នក(មូហាំម៉ាត់)មិនមែនជាអ្នកបង្ខំពួកគេ(ឱ្យមានជំនឿ)នោះឡើយ ។ ដូច្នេះចូរអ្នកក្រើនរំលឹកអ្នកដែលខ្លាចការព្រមានរបស់យើងដោយគម្ពីរគួរអានចុះ ។

نَّحْنُ أَعْلَمُ بِمَا يَقُولُونَ ۖ وَمَآ أَنتَ عَلَيْهِم بِجَبَّارٍ ۖ فَذَكِّرْ بِٱلْقُرْءَانِ مَن يَخَافُ وَعِيدِ ﴿٤٥﴾

## ជំពូកអាស់ហ្សារីយ៉ាត

## سورة الذاريات

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

وَٱلذَّٰرِيَٰتِ ذَرۡوٗا ﴿١﴾

១-អល់ឡោះស្បថនឹងខ្យល់ព្យុះដែលបក់បោកលំអងធូលី

فَٱلۡحَٰمِلَٰتِ وِقۡرٗا ﴿٢﴾

២-និងពពកដែលនាំទឹកភ្លៀងដ៏ធ្ងន់

فَٱلۡجَٰرِيَٰتِ يُسۡرٗا ﴿٣﴾

៣-និងនាវាដែលធ្វើដំណើរ(លើផ្ទៃសមុទ្រ)ដោយងាយស្រួល

فَٱلۡمُقَسِّمَٰتِ أَمۡرًا ﴿٤﴾

៤-និងម៉ាឡាអ៊ីកាត់ដែលបែងចែកការងារ(តាមបទបញ្ជារបស់អល់ឡោះ)។

إِنَّمَا تُوعَدُونَ لَصَادِقٞ ﴿٥﴾

៥-ពិតប្រាកដណាស់ អ្វីដែលគេសន្យានឹងពួកអ្នកគឺជាការពិត។

وَإِنَّ ٱلدِّينَ لَوَٰقِعٞ ﴿٦﴾

៦-ហើយពិតប្រាកដណាស់ ថ្ងៃជំនុំជំរះពិតជានឹងកើតឡើង។

وَٱلسَّمَآءِ ذَاتِ ٱلۡحُبُكِ ﴿٧﴾

៧-អល់ឡោះស្បថនឹងមេឃដែលមានគន្លងជាច្រើន។

إِنَّكُمۡ لَفِي قَوۡلٖ مُّخۡتَلِفٖ ﴿٨﴾

៨-ពិតប្រាកដណាស់ ពួកអ្នកមានយោបល់ខុសៗគ្នា(អំពីមូហាំម៉ាត់ និងគម្ពីរគួរអាន)។

يُؤۡفَكُ عَنۡهُ مَنۡ أُفِكَ ﴿٩﴾

៩-គេបង្វែរចេញពីវា(គម្ពីរគួរអាន)ចំពោះអ្នកណាដែលត្រូវបានគេបង្វែរចេញ(ពីភាពមានជំនឿ)នោះ។

قُتِلَ ٱلۡخَرَّٰصُونَ ﴿١٠﴾

១០-ពួកភូតកុហកត្រូវបានគេដាក់បណ្តាសា

ٱلَّذِينَ هُمۡ فِي غَمۡرَةٖ سَاهُونَ ﴿١١﴾

១១-ដែលពួកគេជាពួកល្ងង់ខ្លៅស្ថិតក្នុងភាពវង្វេង ។

يَسۡـَٔلُونَ أَيَّانَ يَوۡمُ ٱلدِّينِ ﴿١٢﴾

១២-ពួកគេសួរថាៈ តើថ្ងៃជំនុំជំរះនឹងកើតឡើងនៅពេលណា?

يَوۡمَ هُمۡ عَلَى ٱلنَّارِ يُفۡتَنُونَ ﴿١٣﴾

១៣-គឺនៅថ្ងៃដែលពួកគេត្រូវគេដុតនៅលើភ្លើងនរក។

ذُوقُواْ فِتۡنَتَكُمۡ هَٰذَا ٱلَّذِي كُنتُم بِهِۦ تَسۡتَعۡجِلُونَ ﴿١٤﴾

១៤-(មានគេនិយាយទៅកាន់ពួកគេថា) ចូរពួកអ្នកភ្លក្សនូវទារុណកម្មរបស់ពួកអ្នកចុះ។ នេះហើយជាអ្វីដែលពួកអ្នកធ្លាប់សុំវាឱ្យមកដល់យ៉ាងឆាប់រហ័សនោះ។

إِنَّ ٱلۡمُتَّقِينَ فِي جَنَّٰتٖ وَعُيُونٍ ﴿١٥﴾

១៥-ពិតប្រាកដណាស់ បណ្តាអ្នកដែលកោតខ្លាចអល់ឡោះគឺស្ថិតនៅក្នុងឋានសួគ៌ និងមានប្រភពទឹកជាច្រើន។

ءَاخِذِينَ مَآ ءَاتَىٰهُمۡ رَبُّهُمۡۚ إِنَّهُمۡ كَانُواْ قَبۡلَ ذَٰلِكَ مُحۡسِنِينَ ﴿١٦﴾

១៦-ដោយពួកគេទទួលយកនូវអ្វីៗដែលម្ចាស់របស់ពួកគេបានប្រទានឱ្យពួកគេ។ ពិតប្រាកដណាស់ ពួកគេជាអ្នកដែលធ្លាប់សាង

អំពើល្អកាលពីមុន ។

كَانُواْ قَلِيلاً مِّنَ ٱلَّيْلِ مَا يَهْجَعُونَ ﴿١٧﴾

១៧-គឺពួកគេដេកតិចតួចបំផុតនៅពេលយប់ ។

وَبِٱلْأَسْحَارِ هُمْ يَسْتَغْفِرُونَ ﴿١٨﴾

១៨-ហើយពួកគេតែងតែសុំអភ័យទោសពីអល់ឡោះនៅវេលាទៀបភ្លឺ ។

وَفِيٓ أَمْوَٰلِهِمْ حَقٌّ لِّلسَّآئِلِ وَٱلْمَحْرُومِ ﴿١٩﴾

១៩-ហើយចំពោះទ្រព្យសម្បត្តិរបស់ពួកគេ គឺមានសិទ្ធិ(មានចំណែក)សម្រាប់អ្នកក្រដែលហ៊ានសុំ និងអ្នកក្រដែលមិនហ៊ានសុំ ។

وَفِي ٱلْأَرْضِ ءَايَٰتٌ لِّلْمُوقِنِينَ ﴿٢٠﴾

២០-ហើយនៅលើផែនដីមានភស្តុតាងជាច្រើន(បញ្ជាក់ពីអានុភាពរបស់អល់ឡោះ)សម្រាប់បណ្តាអ្នកដែលមានជំនឿដ៏ពិតប្រាកដ ។

وَفِيٓ أَنفُسِكُمْۚ أَفَلَا تُبْصِرُونَ ﴿٢١﴾

២១-ហើយចំពោះខ្លួនពួកអ្នកផ្ទាល់ក៏ដូច្នោះដែរ ។ តើពួកអ្នកមិនឃើញទេឬ?

وَفِي ٱلسَّمَآءِ رِزْقُكُمْ وَمَا تُوعَدُونَ ﴿٢٢﴾

២២-ហើយនៅលើមេឃ មានលាភសក្ការៈរបស់ពួកអ្នក(ដូចជាទឹកភ្លៀង)និងអ្វីៗដែលគេសន្យាជាមួយពួកអ្នក(នៅក្នុងឋានសួគ៌-ហុលម៉ះហ្វូស) ។

فَوَرَبِّ ٱلسَّمَآءِ وَٱلْأَرْضِ إِنَّهُۥ لَحَقٌّ مِّثْلَ مَآ أَنَّكُمْ تَنطِقُونَ ﴿٢٣﴾

២៣-ហើយម្ចាស់គ្រប់គ្រងមេឃ និងផែនដីស្បថនឹងខ្លួនឯងថា: ពិតប្រាកដណាស់ វា(អ្វីដែលទ្រង់សន្យាជាមួយពួកអ្នក)គឺជាការពិតដូចអ្វីដែលពួកអ្នកនិយាយនោះដែរ ។

هَلْ أَتَىٰكَ حَدِيثُ ضَيْفِ إِبْرَٰهِيمَ ٱلْمُكْرَمِينَ ﴿٢٤﴾

២៤-តើរឿងរ៉ាវរបស់ភ្ញៀវអ៊ីព្រហ៊ីម(ម៉ាឡាអ៊ីកាត់)ដែលត្រូវគេលើកតម្កើងបានមកដល់អ្នក(មូហាំម៉ាត់)ដែរឬទេ ?

إِذْ دَخَلُواْ عَلَيْهِ فَقَالُواْ سَلَٰمًاۖ قَالَ سَلَٰمٌ قَوْمٌ مُّنكَرُونَ ﴿٢٥﴾

២៥-នៅពេលដែលពួកគេចូលទៅជួបគាត់(អ៊ីព្រហ៊ីម) ហើយពួកគេបានស្វាគមន៍នឹងពាក្យសាឡាម គាត់ក៏បានតបនឹងពាក្យសាឡាមវិញដែរ ។ (គាត់បានពោលថា) ពួកអ្នកគឺជាក្រុមដែលគេមិនស្គាល់ឡើយ ។

فَرَاغَ إِلَىٰٓ أَهْلِهِۦ فَجَآءَ بِعِجْلٍ سَمِينٍ ﴿٢٦﴾

២៦-ពេលនោះគាត់បានដើរទៅកាន់គ្រួសាររបស់គាត់ដោយស្ងៀមស្ងាត់ ហើយក៏នាំមកនូវកូនគោអាំងមួយដ៏ធាត់(មកទទួលពួកគេ) ។

២៧-ហើយគាត់បានរៀបចំវានៅជិតពួកគេ( ពេលនោះពួកគេមិនបរិភោគឡើយ) គាត់ក៏ពោលថាៈ តើពួកអ្នកមិនបរិភោគទេឬ?

فَقَرَّبَهُۥٓ إِلَيۡهِمۡ قَالَ أَلَا تَأۡكُلُونَ ﴿٢٧﴾

២៨-ក្រោយមកគាត់ក៏មានអារម្មណ៍ភ័យខ្លាចពីពួកគេ។ ពួកគេបានពោលថាៈ សូមអ្នកកុំខ្លាច! ហើយពួកគេបានផ្តល់ដំណឹងរីករាយដល់គាត់អំពី( ការប្រសូត) ក្មេងប្រុសម្នាក់ដ៏មានចំណេះដឹង។

فَأَوۡجَسَ مِنۡهُمۡ خِيفَةٗۖ قَالُواْ لَا تَخَفۡۖ وَبَشَّرُوهُ بِغُلَٰمٍ عَلِيمٖ ﴿٢٨﴾

២៩-ពេលនោះភរិយារបស់គាត់ក៏បានចេញមកខាងក្រៅដោយបន្លឺសំឡេងទាំងភ្ញាក់ផ្អើល ហើយបានទះមុខខ្លួនឯង រួចនិយាយថាៈ ( តើខ្ញុំអាចមានកូនដូចម្តេចទៅ) បើខ្ញុំជរា និងជាស្រ្តីអារទៀតនោះ?

فَأَقۡبَلَتِ ٱمۡرَأَتُهُۥ فِي صَرَّةٖ فَصَكَّتۡ وَجۡهَهَا وَقَالَتۡ عَجُوزٌ عَقِيمٞ ﴿٢٩﴾

៣០-ពួកគេបានពោលថាៈ នោះហើយដែលម្ចាស់របស់អ្នកបានមានបន្ទូលនោះ។ ពិតប្រាកដណាស់ ទ្រង់មហាគតិបណ្ឌិត មហាដឹង។

قَالُواْ كَذَٰلِكِ قَالَ رَبُّكِۖ إِنَّهُۥ هُوَ ٱلۡحَكِيمُ ٱلۡعَلِيمُ ﴿٣٠﴾

៣១-គាត់បានពោលថាៈ ដូច្នេះ តើពួកអ្នកមានកិច្ចការអ្វី ឱបណ្តាអ្នកនាំសារ( ម៉ាឡាអ៊ីកាត់)?

۞ قَالَ فَمَا خَطۡبُكُمۡ أَيُّهَا ٱلۡمُرۡسَلُونَ ﴿٣١﴾

៣២-ពួកគេឆ្លើយថាៈ ពិតប្រាកដណាស់ ពួកយើងត្រូវបានគេបញ្ជូនទៅកាន់ក្រុមដែលប្រព្រឹត្តបាបកម្ម

قَالُوٓاْ إِنَّآ أُرۡسِلۡنَآ إِلَىٰ قَوۡمٖ مُّجۡرِمِينَ ﴿٣٢﴾

៣៣-ដើម្បីនាំដុំថ្មពីដីឥដ្ឋមកទម្លាក់លើពួកគេ

لِنُرۡسِلَ عَلَيۡهِمۡ حِجَارَةٗ مِّن طِينٖ ﴿٣٣﴾

៣៤-ដែលជាសញ្ញាមកពីម្ចាស់របស់អ្នក( អ៊ីព្រហ៊ីម) សម្រាប់ពួកដែលបំពាន។

مُّسَوَّمَةً عِندَ رَبِّكَ لِلۡمُسۡرِفِينَ ﴿٣٤﴾

៣៥-ហើយយើងបានសង្គ្រោះបណ្តាអ្នកមានជំនឿដែលរស់នៅក្នុងនោះ( ភូមិរបស់លូត)។

فَأَخۡرَجۡنَا مَن كَانَ فِيهَا مِنَ ٱلۡمُؤۡمِنِينَ ﴿٣٥﴾

៣៦-ក្រោយមកយើងមិនឃើញអ្វីនៅក្នុងនោះក្រៅពីផ្ទះមួយអំពីបណ្តាអ្នកមូស្លីមនោះឡើយ( ផ្ទះរបស់លូតនិងក្រុមគ្រួសាររបស់គាត់)។

فَمَا وَجَدۡنَا فِيهَا غَيۡرَ بَيۡتٖ مِّنَ ٱلۡمُسۡلِمِينَ ﴿٣٦﴾

៣៧-ហើយយើងបានបន្សល់ទុកនៅក្នុងភូមិស្រុកនោះនូវភស្តុតាងមួយសម្រាប់បណ្តាអ្នកដែលកោតខ្លាចទារុណកម្មដ៏ឈឺចាប់។

وَتَرَكۡنَا فِيهَآ ءَايَةٗ لِّلَّذِينَ يَخَافُونَ ٱلۡعَذَابَ ٱلۡأَلِيمَ ﴿٣٧﴾

៣៨-ហើយនៅក្នុងរឿងមូសា នៅពេលដែលយើងបានបញ្ជូន

وَفِي مُوسَىٰٓ إِذۡ أَرۡسَلۡنَٰهُ إِلَىٰ فِرۡعَوۡنَ بِسُلۡطَٰنٖ

مُّبِينٍ ﴿٣٨﴾

គេទៅកាន់ហ្វៀរអោនជាមួយនឹងមុជីហ្សាត់ដ៏ច្បាស់លាស់(ក៏ជាភស្តុតាងមួយដែរ)។

فَتَوَلَّىٰ بِرُكۡنِهِۦ وَقَالَ سَٰحِرٌ أَوۡ مَجۡنُونٞ ﴿٣٩﴾

៣៩-ក្រោយមកគេ(ហ្វៀរអោន)បានបែរចេញ(ពីជំនឿ)ជាមួយនឹងកងទ័ពរបស់គេ ហើយបាននិយាយថា: គេជាគ្រូមន្តអាគម ឬជាមនុស្សវិកលចរិត។

فَأَخَذۡنَٰهُ وَجُنُودَهُۥ فَنَبَذۡنَٰهُمۡ فِي ٱلۡيَمِّ وَهُوَ مُلِيمٞ ﴿٤٠﴾

៤០-ក្រោយមក យើងបានក្របួចគេនិងពលទាហានរបស់គេ រួចយើងក៏បោះពួកគេចូលទៅក្នុងសមុទ្រ ដោយគេជាអ្នកដែលត្រូវគេស្តីបន្ទោស។

وَفِي عَادٍ إِذۡ أَرۡسَلۡنَا عَلَيۡهِمُ ٱلرِّيحَ ٱلۡعَقِيمَ ﴿٤١﴾

៤១-ហើយនៅក្នុងរឿងអាដ នៅពេលដែលយើងបានបញ្ជូនខ្យល់ព្យុះដ៏ស្ងួតទៅកំទេចពួកគេ(ក៏ជាភស្តុតាងមួយដែរ)។

مَا تَذَرُ مِن شَيۡءٍ أَتَتۡ عَلَيۡهِ إِلَّا جَعَلَتۡهُ كَٱلرَّمِيمِ ﴿٤٢﴾

៤២-វាមិនបន្សល់ទុកអ្វីឡើយ ពេលដែលវាបានបក់បោកទៅលើអ្វីមួយហើយនោះ លើកលែងតែវាធ្វើឱ្យអ្វីទាំងនោះខ្ទេចខ្ទីដូចជាផេះ។

وَفِي ثَمُودَ إِذۡ قِيلَ لَهُمۡ تَمَتَّعُواْ حَتَّىٰ حِينٖ ﴿٤٣﴾

៤៣-ហើយនៅក្នុងរឿងសាមូដ នៅពេលដែលមានគេនិយាយទៅកាន់ពួកគេថា: ចូរពួកអ្នកសោយសុខរហូតដល់ពេលវេលាមួយចុះ។

فَعَتَوۡاْ عَنۡ أَمۡرِ رَبِّهِمۡ فَأَخَذَتۡهُمُ ٱلصَّٰعِقَةُ وَهُمۡ يَنظُرُونَ ﴿٤٤﴾

៤៤-តែពួកគេបានប្រឆាំងនឹងបទបញ្ជានៃម្ចាស់ពួកគេ។ ពេលនោះរន្ទះបានបាញ់(សម្លាប់)ពួកគេ ខណៈដែលពួកគេមើលឃើញផ្ទាល់នឹងភ្នែក។

فَمَا ٱسۡتَطَٰعُواْ مِن قِيَامٖ وَمَا كَانُواْ مُنتَصِرِينَ ﴿٤٥﴾

៤៥-ដូច្នេះ ពួកគេគ្មានសមត្ថភាពក្នុងការតទល់(នឹងទារុណកម្ម)ឡើយ ហើយពួកគេក៏មិនអាចជួយខ្លួនឯងបានដែរ។

وَقَوۡمَ نُوحٖ مِّن قَبۡلُۖ إِنَّهُمۡ كَانُواْ قَوۡمٗا فَٰسِقِينَ ﴿٤٦﴾

៤៦-ហើយ(យើងបានបំផ្លាញ)ក្រុមនួហមុនពួកគេទៅទៀត។ ពិតប្រាកដណាស់ ពួកគេគឺជាក្រុមដែលធ្លាប់ល្មើសនឹងបទបញ្ជារបស់អល់ឡោះ។

وَٱلسَّمَآءَ بَنَيۡنَٰهَا بِأَيۡيْدٖ وَإِنَّا لَمُوسِعُونَ ﴿٤٧﴾

៤៧-ហើយមេឃ យើងបានបង្កើតវាដោយអានុភាពរបស់យើងផ្ទាល់។ ហើយពិតប្រាកដណាស់ យើងជាអ្នកធ្វើឱ្យវាធំទូលាយ។

៤៨-ហើយផែនដីយើងបានធ្វើឱ្យវារាបស្មើ ។ ហើយយើងជាអ្នកក្រាលវាយ៉ាងល្អប្រណីត ។

وَٱلۡأَرۡضَ فَرَشۡنَٰهَا فَنِعۡمَ ٱلۡمَٰهِدُونَ ٤٨

៤៩-ហើយរាល់អ្វី១ទាំងអស់ យើងបានបង្កើតឱ្យមានជាគូ១ ដើម្បីពួកអ្នកនឹកឃើញ(ពីអានុភាពរបស់អល់ឡោះ) ។

وَمِن كُلِّ شَيۡءٍ خَلَقۡنَا زَوۡجَيۡنِ لَعَلَّكُمۡ تَذَكَّرُونَ ٤٩

៥០-ដូច្នេះ ចូរពួកអ្នកប្រញាប់ប្រញាល់ត្រឡប់ទៅកាន់អល់ឡោះ(អនុវត្តតាមបទបញ្ជា)ចុះ ពិតប្រាកដណាស់ខ្ញុំជាអ្នកដាស់តឿនព្រមានដ៏ច្បាស់លាស់ពីទ្រង់សម្រាប់ពួកអ្នក ។

فَفِرُّوٓاْ إِلَى ٱللَّهِۖ إِنِّي لَكُم مِّنۡهُ نَذِيرٞ مُّبِينٞ ٥٠

៥១-ហើយចូរពួកអ្នកកុំយកម្ចាស់ផ្សេងមកគោរពសក្ការៈរួមជាមួយអល់ឡោះឱ្យសោះ ។ ពិតប្រាកដណាស់ ខ្ញុំជាអ្នកដាស់តឿនព្រមានដ៏ច្បាស់លាស់ពីទ្រង់សម្រាប់ពួកអ្នក ។

وَلَا تَجۡعَلُواْ مَعَ ٱللَّهِ إِلَٰهًا ءَاخَرَۖ إِنِّي لَكُم مِّنۡهُ نَذِيرٞ مُّبِينٞ ٥١

៥២-ដូច្នោះដែរ គ្មានអ្នកនាំសារណាម្នាក់ដែលបានមកដល់ពួកជំនាន់មុនពួកគេក្រៅពីពួកនោះបាននិយាយថាៈ គេជាគ្រូមន្តអាគម ឬជាមនុស្សវិកលចរិតនោះឡើយ ។

كَذَٰلِكَ مَآ أَتَى ٱلَّذِينَ مِن قَبۡلِهِم مِّن رَّسُولٍ إِلَّا قَالُواْ سَاحِرٌ أَوۡ مَجۡنُونٌ ٥٢

៥៣-តើពួកគេ(ពួកជំនាន់មុន)បានផ្ដាំផ្ញើគ្នាអំពីពាក្យសំដីនេះឬ? ផ្ទុយទៅវិញ ពួកគេគឺជាក្រុមដែលបំពាន ។

أَتَوَاصَوۡاْ بِهِۦۚ بَلۡ هُمۡ قَوۡمٞ طَاغُونَ ٥٣

៥៤-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)បែរចេញពីពួកគេ ហើយអ្នកក៏មិនមែនជាអ្នកដែលត្រូវគេស្តីបន្ទោសដែរ ។

فَتَوَلَّ عَنۡهُمۡ فَمَآ أَنتَ بِمَلُومٖ ٥٤

៥៥-ហើយចូរអ្នករំលឹកគ្នាចុះ ព្រោះការរំលឹកគ្នានោះពិតជាផ្ដល់ផលប្រយោជន៍ដល់បណ្ដាអ្នកដែលមានជំនឿ ។

وَذَكِّرۡ فَإِنَّ ٱلذِّكۡرَىٰ تَنفَعُ ٱلۡمُؤۡمِنِينَ ٥٥

៥៦-ហើយយើងមិនបានបង្កើតជិន និងមនុស្សលោកក្រៅពីឱ្យពួកគេគោរពសក្ការៈមកចំពោះយើងឡើយ ។

وَمَا خَلَقۡتُ ٱلۡجِنَّ وَٱلۡإِنسَ إِلَّا لِيَعۡبُدُونِ ٥٦

៥៧-យើងមិនត្រូវការលាភសក្ការៈពីពួកគេឡើយ ហើយយើងក៏មិនត្រូវការឱ្យពួកគេផ្ដល់អាហារដល់យើងដែរ ។

مَآ أُرِيدُ مِنۡهُم مِّن رِّزۡقٖ وَمَآ أُرِيدُ أَن يُطۡعِمُونِ ٥٧

៥៨-ពិតប្រាកដណាស់ អល់ឡោះជាអ្នកផ្ដល់លាភសក្ការៈដែលមានអានុភាពខ្លាំងក្លាជាទីបំផុត ។

إِنَّ ٱللَّهَ هُوَ ٱلرَّزَّاقُ ذُو ٱلۡقُوَّةِ ٱلۡمَتِينُ ٥٨

៥៩-ហើយពិតប្រាកដណាស់ សម្រាប់ពួកដែលបានបំពានគឺទទួលចំណែកទារុណកម្មដូចជាចំណែកទារុណកម្មនៃគូកនរបស់ពួកគេដែរ ។ ដូច្នេះ ចូរកុំឱ្យពួកគេអន្ទះសាសុំពីយើងឱ្យសោះ ។

فَإِنَّ لِلَّذِينَ ظَلَمُوا۟ ذَنُوبًا مِّثْلَ ذَنُوبِ أَصْحَـٰبِهِمْ فَلَا يَسْتَعْجِلُونِ ﴿٥٩﴾

៦០-ហើយការវិនាសអន្តរាយ គឺសម្រាប់ពួកដែលប្រឆាំងនឹងថ្ងៃដែលពួកគេត្រូវបានគេសន្យា ។

فَوَيْلٌ لِّلَّذِينَ كَفَرُوا۟ مِن يَوْمِهِمُ ٱلَّذِى يُوعَدُونَ ﴿٦٠﴾

## ជំពូកអាត់តួរ

## سورة الطور

ក្នុងនាមអល់ឡោះ មហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

១-អល់ឡោះស្បថនឹងភ្នំតួរ ។

وَٱلطُّورِ ﴿١﴾

២-ហើយស្បថនឹងគម្ពីរដែលត្រូវបានគេកត់ត្រា ។

وَكِتَـٰبٍ مَّسْطُورٍ ﴿٢﴾

៣-នៅលើស្បែកដែលលាតត្រដាង ។

فِى رَقٍّ مَّنشُورٍ ﴿٣﴾

៤-និងហ្ពៃតិលម៉ាក់មូរ( ឈ្មោះកន្លែងមួយនៅលើមេឃជាន់ទីប្រាំពីរ ដែលម៉ាឡាអ៊ីកាត់តវ៉ាហ្វ) ។

وَٱلْبَيْتِ ٱلْمَعْمُورِ ﴿٤﴾

៥-និងដំបូលដែលគេលើកយ៉ាងខ្ពស់( មេឃនៃពិភពលោក) ។

وَٱلسَّقْفِ ٱلْمَرْفُوعِ ﴿٥﴾

៦-ហើយនិងមហាសមុទ្រដែលត្រូវគេបង្កាត់ភ្លើង( នៅថ្ងៃបរលោក) ។

وَٱلْبَحْرِ ٱلْمَسْجُورِ ﴿٦﴾

៧-ពិតប្រាកដណាស់ ទារុណកម្មនៃម្ចាស់របស់អ្នក( មូហាំម៉ាត់) ពិតជានឹងកើតឡើង ។

إِنَّ عَذَابَ رَبِّكَ لَوَٰقِعٌ ﴿٧﴾

៨-គ្មានអ្នកណាម្នាក់អាចរារាំងវាបានឡើយ ។

مَّا لَهُۥ مِن دَافِعٍ ﴿٨﴾

៩-នៅថ្ងៃដែលមេឃនឹងរញ្ជួយយ៉ាងខ្លាំង ។

يَوْمَ تَمُورُ ٱلسَّمَآءُ مَوْرًا ﴿٩﴾

១០-និងថ្ងៃដែលភ្នំរសាត់ខ្ចាត់ខ្ចាយ( ដូចពពក) ។

وَتَسِيرُ ٱلْجِبَالُ سَيْرًا ﴿١٠﴾

១១-ដូច្នេះ ការវិនាសអន្តរាយនៅថ្ងៃនោះគឺសម្រាប់ពួកដែលភូតកុហក ។

فَوَيْلٌ يَوْمَئِذٍ لِّلْمُكَذِّبِينَ ﴿١١﴾

១២-គឺពួកដែលលេងសើចនឹងប្រការមិនត្រឹមត្រូវ ។

ٱلَّذِينَ هُمْ فِى خَوْضٍ يَلْعَبُونَ ﴿١٢﴾

يَوۡمَ يُدَعُّونَ إِلَىٰ نَارِ جَهَنَّمَ دَعًّا ﴿١٣﴾

១៣-នៅថ្ងៃដែលពួកគេនឹងត្រូវគេរុញច្រានចូលទៅក្នុងនរកជើហាន់ណាំយ៉ាងពេញទំហឹង ។

هَٰذِهِ ٱلنَّارُ ٱلَّتِي كُنتُم بِهَا تُكَذِّبُونَ ﴿١٤﴾

១៤-( មានគេនិយាយទៅកាន់ពួកគេថា) នេះហើយជានរកដែលពួកអ្នកធ្លាប់បានបដិសេធនឹងវា( នៅក្នុងលោកិយ) ។

أَفَسِحۡرٌ هَٰذَآ أَمۡ أَنتُمۡ لَا تُبۡصِرُونَ ﴿١٥﴾

១៥-ដូច្នេះ តើ( អ្វីដែលពួកអ្នកកំពុងតែមើលឃើញ) នេះជាមន្តអាគមឬ? ឬមួយពួកអ្នកមើលមិនឃើញ?

ٱصۡلَوۡهَا فَٱصۡبِرُوٓاْ أَوۡ لَا تَصۡبِرُواْ سَوَآءٌ
عَلَيۡكُمۡۖ إِنَّمَا تُجۡزَوۡنَ مَا كُنتُمۡ تَعۡمَلُونَ ﴿١٦﴾

១៦-ចូរពួកអ្នកចូលទៅក្នុងវា( នរក) ទោះបីជាពួកអ្នកអត់ធ្មត់ ឬមិនអត់ធ្មត់ក៏ដោយ គឺវាដូចតែគ្នាទេចំពោះពួកអ្នក ។ តាមពិតគេគ្រាន់តែតបស្នងឱ្យពួកអ្នកនូវអ្វីដែលពួកអ្នកធ្លាប់ប្រព្រឹត្តប៉ុណ្ណោះ ។

إِنَّ ٱلۡمُتَّقِينَ فِي جَنَّٰتٖ وَنَعِيمٖ ﴿١٧﴾

១៧-ពិតប្រាកដណាស់ បណ្តាអ្នកដែលកោតខ្លាចអល់ឡោះ គឺស្ថិតក្នុងឋានសួគ៌ដោយសប្បាយរីករាយ ។

فَٰكِهِينَ بِمَآ ءَاتَىٰهُمۡ رَبُّهُمۡ وَوَقَىٰهُمۡ رَبُّهُمۡ
عَذَابَ ٱلۡجَحِيمِ ﴿١٨﴾

១៨-ពួកគេសប្បាយរីករាយនឹងអ្វីដែលម្ចាស់របស់ពួកគេបានប្រទានឱ្យពួកគេ ហើយម្ចាស់របស់ពួកគេការពារពួកគេពីទារុណកម្មនៃនរកជើហ៊ីម ។

كُلُواْ وَٱشۡرَبُواْ هَنِيٓـَٔۢا بِمَا كُنتُمۡ تَعۡمَلُونَ ﴿١٩﴾

១៩-( មានគេនិយាយទៅកាន់ពួកគេថា) ចូរពួកអ្នកបរិភោគនិងផឹកដោយក្តីរីករាយជាមួយនឹងអ្វីៗដែលពួកអ្នកធ្លាប់បានប្រព្រឹត្តចុះ ។

مُتَّكِـِٔينَ عَلَىٰ سُرُرٖ مَّصۡفُوفَةٖۖ وَزَوَّجۡنَٰهُم
بِحُورٍ عِينٖ ﴿٢٠﴾

២០-ដោយពួកគេផ្អែកខ្លួននៅលើគ្រែដែលគេរៀបចំជាជួរៗ ។ ហើយយើងរៀបអាពាហ៍ពិពាហ៍ឱ្យពួកគេជាមួយនឹងស្រីទេពអប្សរ ។

وَٱلَّذِينَ ءَامَنُواْ وَٱتَّبَعَتۡهُمۡ ذُرِّيَّتُهُم بِإِيمَٰنٍ
أَلۡحَقۡنَا بِهِمۡ ذُرِّيَّتَهُمۡ وَمَآ أَلَتۡنَٰهُم مِّنۡ عَمَلِهِم
مِّن شَيۡءٖۚ كُلُّ ٱمۡرِيِٕۭ بِمَا كَسَبَ رَهِينٞ ﴿٢١﴾

២១-ហើយបណ្តាអ្នកដែលមានជំនឿ និងកូនចៅរបស់ពួកគេដែលបានធ្វើតាមពួកគេក្នុងភាពមានជំនឿនោះ យើងនឹងឱ្យកូនចៅរបស់ពួកគេនៅជួបជុំជាមួយពួកគេ( ក្នុងឋានសួគ៌) ។ ហើយយើងមិនធ្វើឱ្យផលបុណ្យនៃអំពើល្អរបស់ពួកគេខ្វះបន្តិចណាឡើយ ។ បុគ្គលគ្រប់ៗរូបគឺត្រូវគេផ្តល់ឱ្យតាមសន្យានូវអ្វីដែលគេបានសាង ។

وَأَمۡدَدۡنَٰهُم بِفَٰكِهَةٖ وَلَحۡمٖ مِّمَّا يَشۡتَهُونَ ﴿٢٢﴾

២២-ហើយយើងបន្ថែមដល់ពួកគេនូវផ្លែឈើ និងសាច់គ្រប់ប្រភេទតាមអ្វីដែលពួកគេត្រូវការ ។

يَتَنَٰزَعُونَ فِيهَا كَأۡسٗا لَّا لَغۡوٞ فِيهَا وَلَا

២៣-ពួកគេហុចកែវស្រាឱ្យគ្នានៅក្នុងវា( ឋានសួគ៌) ដែលពុំមាន

تَأۡثِيمٞ ﴿٢٣﴾

ពាក្យសំដីឥតប្រយោជន៍ និងបាបកម្មនៅក្នុងនោះឡើយ។

۞ وَيَطُوفُ عَلَيۡهِمۡ غِلۡمَانٞ لَّهُمۡ كَأَنَّهُمۡ لُؤۡلُؤٞ مَّكۡنُونٞ ﴿٢٤﴾

២៤-ហើយក្មេងៗដើរជុំវិញពួកគេសម្រាប់បម្រើពួកគេគឺប្រៀបដូចជាគជ់ខ្យងដែលត្រូវបានគេថែរក្សា។

وَأَقۡبَلَ بَعۡضُهُمۡ عَلَىٰ بَعۡضٖ يَتَسَآءَلُونَ ﴿٢٥﴾

២៥-ហើយពួកគេសំដៅទៅរកគ្នាដោយសួរគ្នាទៅវិញទៅមក។

قَالُوٓاْ إِنَّا كُنَّا قَبۡلُ فِيٓ أَهۡلِنَا مُشۡفِقِينَ ﴿٢٦﴾

២៦-ពួកគេបាននិយាយថាៈ ពិតប្រាកដណាស់ កាលពីមុន(នៅក្នុងលោកិយ) នៅពេលដែលពួកយើងនៅជាមួយក្រុមគ្រួសាររបស់ពួកយើង ពួកយើងធ្លាប់កោតខ្លាចអល់ឡោះ។

فَمَنَّ ٱللَّهُ عَلَيۡنَا وَوَقَىٰنَا عَذَابَ ٱلسَّمُومِ ﴿٢٧﴾

២៧-ហើយអល់ឡោះបានប្រទានទៀកម៉ាត់ឱ្យពួកយើង និងបានការពារពួកយើងពីទារុណកម្មនៃភ្លើងនរក។

إِنَّا كُنَّا مِن قَبۡلُ نَدۡعُوهُۖ إِنَّهُۥ هُوَ ٱلۡبَرُّ ٱلرَّحِيمُ ﴿٢٨﴾

២៨-ពិតប្រាកដណាស់ ពួកយើងធ្លាប់គោរពសក្ការៈចំពោះទ្រង់តែមួយគត់កាលពីមុន(នៅក្នុងលោកិយ)។ ពិតប្រាកដណាស់ ទ្រង់មហាករុណា មហាអាណិតស្រឡាញ់។

فَذَكِّرۡ فَمَآ أَنتَ بِنِعۡمَتِ رَبِّكَ بِكَاهِنٖ وَلَا مَجۡنُونٍ ﴿٢٩﴾

២៩-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)រំលឹក(មនុស្សលោក) ព្រោះដោយសារនៀកម៉ាត់នៃម្ចាស់របស់អ្នក អ្នកមិនមែនជាគ្រូទាយហើយក៏មិនមែនជាមនុស្សវិកលចរិតដែរ។

أَمۡ يَقُولُونَ شَاعِرٞ نَّتَرَبَّصُ بِهِۦ رَيۡبَ ٱلۡمَنُونِ ﴿٣٠﴾

៣០-ផ្ទុយទៅវិញ ពួកគេ(ពួកមូស្ទីរីគីន)និយាយថាៈ គេគឺជាកវីម្នាក់ដែលពួកយើងរង់ចាំឱ្យសេចក្តីស្លាប់ធ្លាក់លើរូបគេ។

قُلۡ تَرَبَّصُواْ فَإِنِّي مَعَكُم مِّنَ ٱلۡمُتَرَبِّصِينَ ﴿٣١﴾

៣១-ចូរអ្នកតបវិញថាៈ ចូរពួកអ្នករង់ចាំចុះ ពិតប្រាកដណាស់ ខ្ញុំក៏ស្ថិតក្នុងចំណោមអ្នកដែលរង់ចាំជាមួយពួកអ្នកដែរ។

أَمۡ تَأۡمُرُهُمۡ أَحۡلَٰمُهُم بِهَٰذَآۚ أَمۡ هُمۡ قَوۡمٞ طَاغُونَ ﴿٣٢﴾

៣២-ផ្ទុយទៅវិញ តើសតិរបស់ពួកគេបានបញ្ជាឱ្យពួកគេនិយាយដូច្នេះឬ? ឬមួយក៏ពួកគេជាក្រុមដែលបំពានលើខ្លួនឯង?

أَمۡ يَقُولُونَ تَقَوَّلَهُۥۚ بَل لَّا يُؤۡمِنُونَ ﴿٣٣﴾

៣៣-ឬមួយក៏ពួកគេនិយាយថាៈ អ្នក(មូហាំម៉ាត់)បានប្រឌិតវា(គម្ពីរគួរអាន)ដោយខ្លួនឯងឬ? ផ្ទុយទៅវិញពួកគេទេដែលគ្មានជំនឿនោះ។

فَلۡيَأۡتُواْ بِحَدِيثٖ مِّثۡلِهِۦٓ إِن كَانُواْ صَٰدِقِينَ ﴿٣٤﴾

៣៤-ដូច្នេះចូរឱ្យពួកគេនាំយកពាក្យពេចន៍ណាមួយដូចនឹងពាក្យពេចន៍របស់វា(គម្ពីរគួរអាន) មក ប្រសិនបើពួកគេជាអ្នកដែលនិយាយពិតនោះ។

أَمۡ خُلِقُواْ مِنۡ غَيۡرِ شَيۡءٍ أَمۡ هُمُ ٱلۡخَٰلِقُونَ ﴿٣٥﴾

៣៥-តើពួកគេត្រូវបានគេបង្កើតដោយគ្មានអ្នកបង្កើតឬ? ឬមួយពួកគេជាអ្នកដែលបង្កើតខ្លួនឯង ?

أَمۡ خَلَقُواْ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَۚ بَل لَّا يُوقِنُونَ ﴿٣٦﴾

៣៦-តើពួកគេបានបង្កើតមេឃជាច្រើនជាន់ និងផែនដីនេះឬ? ផ្ទុយទៅវិញ ពួកគេគ្មានជំនឿពិតប្រាកដឡើយ។

أَمۡ عِندَهُمۡ خَزَآئِنُ رَبِّكَ أَمۡ هُمُ ٱلۡمُصَۜيۡطِرُونَ ﴿٣٧﴾

៣៧-ឬមួយពួកគេមានឃ្លាំងលាភសក្ការៈនៃម្ចាស់របស់អ្នក? ឬមួយពួកគេជាអ្នកគ្រប់គ្រង(អ្វីៗទាំងអស់ដែលមាននៅក្នុងលោកិយនេះ)?

أَمۡ لَهُمۡ سُلَّمٞ يَسۡتَمِعُونَ فِيهِۖ فَلۡيَأۡتِ مُسۡتَمِعُهُم بِسُلۡطَٰنٖ مُّبِينٍ ﴿٣٨﴾

៣៨-តើពួកគេមានជណ្ដើរ(ឡើងទៅលើមេឃ) អាចឱ្យពួកគេស្ដាប់ឮ(ពាក្យសំដីរបស់ម៉ាឡាអ៊ីកាត់)នៅក្នុងនោះឬ? ដូច្នេះ ចូរឱ្យអ្នកដែលស្ដាប់ឮក្នុងចំណោមពួកគេនាំភស្តុតាងដ៏ច្បាស់លាស់មក!

أَمۡ لَهُ ٱلۡبَنَٰتُ وَلَكُمُ ٱلۡبَنُونَ ﴿٣٩﴾

៣៩-ឬមួយទ្រង់មានកូនស្រី ហើយពួកអ្នកមានកូនប្រុស?

أَمۡ تَسۡـَٔلُهُمۡ أَجۡرٗا فَهُم مِّن مَّغۡرَمٖ مُّثۡقَلُونَ ﴿٤٠﴾

៤០-តើអ្នក(មូហាំម៉ាត់)សុំកម្រៃពីពួកគេ(ចំពោះការអំពាវនាវរបស់អ្នក) រួចមកពួកគេត្រូវទទួលបន្ទុកធ្ងន់ធ្ងរពីការជំពាក់បំណុល(របស់អ្នក)ឬ ?

أَمۡ عِندَهُمُ ٱلۡغَيۡبُ فَهُمۡ يَكۡتُبُونَ ﴿٤١﴾

៤១-ឬមួយពួកគេដឹងពីរឿងអាថ៌កំបាំង ហើយពួកគេកត់ត្រាវាទុក(សម្រាប់ប្រាប់ដល់មនុស្សលោក)ឬ?

أَمۡ يُرِيدُونَ كَيۡدٗاۖ فَٱلَّذِينَ كَفَرُواْ هُمُ ٱلۡمَكِيدُونَ ﴿٤٢﴾

៤២-ឬមួយពួកគេមានបំណងរៀបផែនការបោកប្រាស់(ចំពោះមូហាំម៉ាត់)? តែពួកដែលបានប្រឆាំងទេ គឺជាពួកដែលទទួលរងនូវការបោកប្រាស់នោះ។

أَمۡ لَهُمۡ إِلَٰهٌ غَيۡرُ ٱللَّهِۚ سُبۡحَٰنَ ٱللَّهِ عَمَّا يُشۡرِكُونَ ﴿٤٣﴾

៤៣-ឬមួយពួកគេមានម្ចាស់ដែលត្រូវគោរពសក្ការៈផ្សេងពីអល់ឡោះ? អល់ឡោះមហាស្អាតស្អំអំពីអ្វីដែលពួកគេធ្វើស្ហ៊ីរិកនោះ។

وَإِن يَرَوۡاْ كِسۡفٗا مِّنَ ٱلسَّمَآءِ سَاقِطٗا يَقُولُواْ
سَحَابٞ مَّرۡكُومٞ ٤٤

៤៤-ហើយប្រសិនបើពួកគេ(ពួកមូស្ហរីគីន)ឃើញបំណែកមួយ(នៃទារុណកម្ម)ធ្លាក់ពីលើមេឃ ពួកគេនឹងនិយាយថា: វាជាពពកដែលផ្គុំគ្នាប៉ុណ្ណោះ ។

فَذَرۡهُمۡ حَتَّىٰ يُلَٰقُواْ يَوۡمَهُمُ ٱلَّذِي فِيهِ
يُصۡعَقُونَ ٤٥

៤៥-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)បោះបង់ពួកគេចោលរហូតទាល់តែពួកគេបានជួបនឹងថ្ងៃរបស់ពួកគេ(ថ្ងៃបរលោក)ដែលនៅថ្ងៃនោះ ពួកគេនឹងត្រូវវិនាសអន្តរាយ ។

يَوۡمَ لَا يُغۡنِي عَنۡهُمۡ كَيۡدُهُمۡ شَيۡـٔٗا وَلَا هُمۡ
يُنصَرُونَ ٤٦

៤៦-គឺជាថ្ងៃដែលឧបាយកលរបស់ពួកគេមិនអាចការពារអ្វីដល់ពួកគេបានឡើយ ហើយពួកគេក៏គ្មានអ្នកជួយដែរ ។

وَإِنَّ لِلَّذِينَ ظَلَمُواْ عَذَابٗا دُونَ ذَٰلِكَ وَلَٰكِنَّ
أَكۡثَرَهُمۡ لَا يَعۡلَمُونَ ٤٧

៤៧-ហើយពិតប្រាកដណាស់ ពួកដែលបានបំពានគឺត្រូវទទួលទារុណកម្មផ្សេងពីនោះទៀត(នៅក្នុងលោកិយ) ។ ក៏ប៉ុន្តែពួកគេភាគច្រើនមិនដឹងឡើយ ។

وَٱصۡبِرۡ لِحُكۡمِ رَبِّكَ فَإِنَّكَ بِأَعۡيُنِنَاۖ وَسَبِّحۡ
بِحَمۡدِ رَبِّكَ حِينَ تَقُومُ ٤٨

៤៨-ហើយចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់នឹងបទបញ្ជានៃម្ចាស់របស់អ្នក ព្រោះជាការពិតណាស់ អ្នកស្ថិតនៅក្រោមក្រសែភ្នែករបស់យើង ។ ហើយចូរអ្នកលើកតម្កើងដោយសរសើរចំពោះម្ចាស់របស់អ្នក នៅពេលដែលអ្នកក្រោក(ពីដំណេក ថ្វាយបង្គំ...) ។

وَمِنَ ٱلَّيۡلِ فَسَبِّحۡهُ وَإِدۡبَٰرَ ٱلنُّجُومِ ٤٩

៤៩-ហើយមួយផ្នែកនៃពេលយប់ ចូរអ្នកលើកតម្កើងទ្រង់ និងនៅពេលដែលហ្វូងតារាលិច(ពេលទៀបភ្លឺ) ។

## ជំពូកអាន់ណាជម៍

## سورة النجم

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

وَٱلنَّجۡمِ إِذَا هَوَىٰ ١

១-អល់ឡោះស្បថនឹងផ្កាយនៅពេលវាលិចបាត់ ។

مَا ضَلَّ صَاحِبُكُمۡ وَمَا غَوَىٰ ٢

២-(មូហាំម៉ាត់)មិត្តភក្តិរបស់ពួកអ្នកមិនបានវង្វេង និងមិនបានភាន់ច្រឡំឡើយ ។

وَمَا يَنطِقُ عَنِ ٱلۡهَوَىٰٓ ٣

៣-ហើយគេក៏មិននិយាយតាមទំនើងចិត្តដែរ ។

إِنۡ هُوَ إِلَّا وَحۡيٞ يُوحَىٰ ٤

៤-វា(ពាក្យសំដីដែលគេនិយាយ)គ្មានអ្វីក្រៅពីវ៉ាហ៊ីដែលត្រូវគេវ៉ាហ៊ីមកនោះឡើយ ។

عَلَّمَهُۥ شَدِيدُ ٱلۡقُوَىٰ ٥

៥-អ្នកដែលមានកម្លាំងខ្លាំងក្លា( ជីព្រីល) បានបង្រៀនគេ ។

ذُو مِرَّةٖ فَٱسۡتَوَىٰ ٦

៦-ដែលមានលក្ខណៈល្អឥតខ្ចោះ និងបានបង្ហាញរូបរាងពិត ។

وَهُوَ بِٱلۡأُفُقِ ٱلۡأَعۡلَىٰ ٧

៧-ដោយគេ( ជីព្រីល) ស្ថិតនៅឯជើងមេឃដ៏ខ្ពស់បំផុត ។

ثُمَّ دَنَا فَتَدَلَّىٰ ٨

៨-បន្ទាប់មកគេបានមកជិត( មូហាំម៉ាត់) និងកាន់តែជិតថែមទៀត ។

فَكَانَ قَابَ قَوۡسَيۡنِ أَوۡ أَدۡنَىٰ ٩

៩-ហើយ( ការជិតនេះ) គឺមានប្រវែងរវាងចុងទាំងពីរនៃធ្នូ ឬក៏ជិតជាងនេះទៅទៀត ។

فَأَوۡحَىٰٓ إِلَىٰ عَبۡدِهِۦ مَآ أَوۡحَىٰ ١٠

១០-រួចទ្រង់បានផ្តល់វ៉ាហ៊ីឱ្យខ្ញុំរបស់ទ្រង់( មូហាំម៉ាត់) នូវអ្វីដែលទ្រង់បានវ៉ាហ៊ី ។

مَا كَذَبَ ٱلۡفُؤَادُ مَا رَأَىٰٓ ١١

១១-ចិត្តរបស់គេ( មូហាំម៉ាត់) មិនបានភូតកុហកនូវអ្វីដែលគេបានឃើញឡើយ ។

أَفَتُمَٰرُونَهُۥ عَلَىٰ مَا يَرَىٰ ١٢

១២-ដូច្នេះ តើពួកអ្នកបដិសេធនឹងគេចំពោះអ្វីដែលគេឃើញឬ?

وَلَقَدۡ رَءَاهُ نَزۡلَةً أُخۡرَىٰ ١٣

១៣-ហើយជាការពិតណាស់ គេបានឃើញជីព្រីលជាថ្មីម្តងទៀត ។

عِندَ سِدۡرَةِ ٱلۡمُنتَهَىٰ ١٤

១៤-នៅឯសិត់រ៉តុលមុនតាហា( នៅចុងបញ្ចប់នៃមេឃជាន់ទីប្រាំពីរ) ។

عِندَهَا جَنَّةُ ٱلۡمَأۡوَىٰٓ ١٥

១៥-នៅកន្លែងនោះមានឋានសួគ៌ម៉ាក់វ៉ា ។

إِذۡ يَغۡشَى ٱلسِّدۡرَةَ مَا يَغۡشَىٰ ١٦

១៦-នៅពេលដែល( ពន្លឺរបស់អល់ឡោះ និងបណ្តាម៉ាឡាអ៊ីកាត់) គ្របដណ្តប់លើសិត់រ៉តុលមុនតាហានូវអ្វីដែលគ្របដណ្តប់

مَا زَاغَ ٱلۡبَصَرُ وَمَا طَغَىٰ ١٧

១៧-ខណៈនោះគេ( មូហាំម៉ាត់) មិនបានងាកមើល( ឆ្វេងស្តាំ) និងមិនបានបំពានឡើយ ។

لَقَدۡ رَأَىٰ مِنۡ ءَايَٰتِ رَبِّهِ ٱلۡكُبۡرَىٰٓ ١٨

១៨-ជាការពិតណាស់ គេបានឃើញភស្តុតាងដ៏ធំមួយចំនួននៃម្ចាស់របស់គេ ។

أَفَرَءَيۡتُمُ ٱللَّٰتَ وَٱلۡعُزَّىٰ ١٩

១៩-តើពួកអ្នក( ពួកមូស្ហរីគីន) យល់យ៉ាងណាចំពោះរូប

សំណាកឈ្មោះឡាត និងអ៊ុសហ្សា

២០-ហើយនិងម៉ាណាត[១] ដែលជារូបសំណាកទីបីផ្សេងទៀតនោះ (តើវាផ្តល់ផលប្រយោជន៍ ឬបង្កគ្រោះថ្នាក់ដល់ពួកអ្នកឬទេ)?

وَمَنَوٰةَ ٱلثَّالِثَةَ ٱلْأُخْرَىٰٓ ٢٠

២១-តើពួកអ្នកមានកូនប្រុស ហើយទ្រង់មានកូនស្រីឬ?

أَلَكُمُ ٱلذَّكَرُ وَلَهُ ٱلْأُنثَىٰ ٢١

២២-បើដូច្នោះមែន នោះគឺជាការបែងចែកមួយដ៏អយុត្តិធម៌បំផុត ។

تِلْكَ إِذًا قِسْمَةٌ ضِيزَىٰٓ ٢٢

២៣-វាទាំងនោះគ្មានអ្វីក្រៅពីឈ្មោះដែលពួកអ្នកនិងជីដូនជីតារបស់ពួកអ្នកបានដាក់ឈ្មោះឱ្យពួកវានោះឡើយ ។ អល់ឡោះមិនបានបញ្ចុះភស្តុតាងណាមួយសម្រាប់(ឱ្យពួកអ្នកគោរពសក្ការៈ) វាឡើយ ។ ពួកគេមិនធ្វើតាមអ្វីក្រៅពីការស្មាន និងតាមទំនើងចិត្តឡើយ ។ ហើយជាពិតណាស់ ការចង្អុលបង្ហាញពីម្ចាស់របស់ពួកគេពិតជាបានមកដល់ពួកគេ ។

إِنْ هِىَ إِلَّآ أَسْمَآءٌ سَمَّيْتُمُوهَآ أَنتُمْ وَءَابَآؤُكُم مَّآ أَنزَلَ ٱللَّهُ بِهَا مِن سُلْطَٰنٍ ۚ إِن يَتَّبِعُونَ إِلَّا ٱلظَّنَّ وَمَا تَهْوَى ٱلْأَنفُسُ ۖ وَلَقَدْ جَآءَهُم مِّن رَّبِّهِمُ ٱلْهُدَىٰٓ ٢٣

២៤-តើមនុស្សលោកទទួលបានអ្វីដែលគេប៉ងប្រាថ្នាឬ?

أَمْ لِلْإِنسَٰنِ مَا تَمَنَّىٰ ٢٤

២៥-(មិនដូច្នេះឡើយ) ព្រោះកិច្ចការថ្ងៃបរលោក និងលោកិយគឺជាកម្មសិទ្ធិរបស់អល់ឡោះ ។

فَلِلَّهِ ٱلْءَاخِرَةُ وَٱلْأُولَىٰ ٢٥

២៦-ហើយមានម៉ាឡាអ៊ីកាត់ជាច្រើននៅលើមេឃជាច្រើនជាន់ដែលការអន្តរាគមន៍របស់ពួកគេមិនអាចផ្តល់ប្រយោជន៍អ្វីឡើយ លើកលែងតែបន្ទាប់ពីអល់ឡោះអនុញ្ញាតឱ្យអ្នកណាដែលទ្រង់មានចេតនានិងយល់ព្រមប៉ុណ្ណោះ ។

۞ وَكَم مِّن مَّلَكٍ فِى ٱلسَّمَٰوَٰتِ لَا تُغْنِى شَفَٰعَتُهُمْ شَيْـًٔا إِلَّا مِنۢ بَعْدِ أَن يَأْذَنَ ٱللَّهُ لِمَن يَشَآءُ وَيَرْضَىٰٓ ٢٦

២៧-ពិតប្រាកដណាស់ ពួកដែលគ្មានជំនឿនឹងថ្ងៃបរលោក ពួកគេនឹងដាក់ឈ្មោះឱ្យម៉ាឡាអ៊ីកាត់ជាឈ្មោះស្រី ។

إِنَّ ٱلَّذِينَ لَا يُؤْمِنُونَ بِٱلْءَاخِرَةِ لَيُسَمُّونَ ٱلْمَلَٰٓئِكَةَ تَسْمِيَةَ ٱلْأُنثَىٰ ٢٧

២៨-ដោយពួកគេពុំមានចំណេះដឹងពីវាឡើយ ។ ពួកគេមិនធ្វើតាមអ្វីក្រៅពីការស្មាននោះឡើយ ។ ហើយពិតប្រាកដណាស់ ការស្មានមិនអាចផ្តល់ផលប្រយោជន៍អ្វីដល់ការពិតឡើយ ។

وَمَا لَهُم بِهِۦ مِنْ عِلْمٍ ۖ إِن يَتَّبِعُونَ إِلَّا ٱلظَّنَّ ۖ وَإِنَّ ٱلظَّنَّ لَا يُغْنِى مِنَ ٱلْحَقِّ شَيْـًٔا ٢٨

---

១-ឡាត អ៊ុសហ្សា និងម៉ាណាតជាឈ្មោះរូបសំណាកដែលពួកមូស្ហ្សីគីនម៉ាក្កះគោរពសក្ការៈនាសម័យនោះ ។

២៩-ដូច្នេះ ចូរអ្នក( មូហាំម៉ាត់) ចៀសឱ្យឆ្ងាយពីអ្នកដែលបែរចេញពីការរំលឹក( គម្ពីរគួរអាន) របស់យើង ហើយគេមិនចង់បានអ្វីក្រៅពីការរស់នៅក្នុងលោកិយនេះឡើយ ។

៣០-នោះហើយគឺជាកំរិតយល់ដឹងរបស់ពួកគេ ។ ពិតប្រាកដណាស់ ម្ចាស់របស់អ្នក( មូហាំម៉ាត់) ទ្រង់ដឹងបំផុតចំពោះអ្នកណាដែលបានវង្វេងពីមាគ៌ារបស់ទ្រង់ ។ ហើយទ្រង់ក៏ដឹងបំផុតដែរចំពោះអ្នកណាដែលទទួលបានការចង្អុលបង្ហាញ ។

៣១-ហើយអ្វីៗដែលនៅលើមេឃជាច្រើនជាន់និងអ្វីៗដែលនៅលើផែនដី គឺជាកម្មសិទ្ធិរបស់អល់ឡោះ ដែលទ្រង់នឹងតបស្នងចំពោះពួកដែលបានប្រព្រឹត្តបាបកម្មឱ្យសមទៅនឹងអ្វីដែលពួកគេបានប្រព្រឹត្ត ។ ហើយទ្រង់នឹងតបស្នងចំពោះបណ្ដាអ្នកដែលបានសាងអំពើល្អនូវផលបុណ្យដ៏ល្អប្រពៃ( ឋានសួគ៌) ។

៣២-បណ្ដាអ្នកដែលចៀសវាងពីបាបកម្មធំៗ និងអំពើអសីលធម៌ផ្សេងៗ ក្រៅពីបាបកម្មតូចតាចនោះ ពិតប្រាកដណាស់ ម្ចាស់របស់អ្នកគឺជាអ្នកទូលំទូលាយក្នុងការអភ័យទោស ។ ទ្រង់ដឹងបំផុតពីលក្ខណៈរបស់ពួកអ្នក ខណៈដែលទ្រង់បានបង្កើតពួកអ្នកពីដី និងនៅពេលពួកអ្នកជាទារកនៅក្នុងពោះម្ដាយរបស់ពួកអ្នក ។ ដូច្នេះ ចូរពួកអ្នកកុំមានមោទនភាពចំពោះខ្លួនឯងថាជាអ្នកស្អាតស្អំឱ្យសោះ ព្រោះទ្រង់ដឹងបំផុតចំពោះអ្នកដែលកោតខ្លាចទ្រង់ ។

៣៣-ដូច្នេះ តើអ្នក( មូហាំម៉ាត់) មិនបានឃើញអ្នកដែលបានបែរចេញ( ពីគម្ពីរគួរអាន)

៣៤-និងបានបរិច្ចាគទ្រព្យសម្បត្តិខ្លះៗ រួចមកក៏បានផ្ដាច់វិញទេឬ?

៣៥-តើគេមានចំណេះដឹងនៃប្រការអាថ៌កំបាំង ហើយគេអាចមើលឃើញផ្ទាល់នឹងភ្នែកឬ?

៣៦-ឬមួយគេមិនត្រូវបានគេប្រាប់នូវអ្វីដែលមាននៅក្នុងគម្ពីររបស់មូសា

فَأَعۡرِضۡ عَن مَّن تَوَلَّىٰ عَن ذِكۡرِنَا وَلَمۡ يُرِدۡ إِلَّا ٱلۡحَيَوٰةَ ٱلدُّنۡيَا ٢٩

ذَٰلِكَ مَبۡلَغُهُم مِّنَ ٱلۡعِلۡمِۚ إِنَّ رَبَّكَ هُوَ أَعۡلَمُ بِمَن ضَلَّ عَن سَبِيلِهِۦ وَهُوَ أَعۡلَمُ بِمَنِ ٱهۡتَدَىٰ ٣٠

وَلِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِ لِيَجۡزِيَ ٱلَّذِينَ أَسَٰٓـُٔواْ بِمَا عَمِلُواْ وَيَجۡزِيَ ٱلَّذِينَ أَحۡسَنُواْ بِٱلۡحُسۡنَى ٣١

ٱلَّذِينَ يَجۡتَنِبُونَ كَبَٰٓئِرَ ٱلۡإِثۡمِ وَٱلۡفَوَٰحِشَ إِلَّا ٱللَّمَمَۚ إِنَّ رَبَّكَ وَٰسِعُ ٱلۡمَغۡفِرَةِۚ هُوَ أَعۡلَمُ بِكُمۡ إِذۡ أَنشَأَكُم مِّنَ ٱلۡأَرۡضِ وَإِذۡ أَنتُمۡ أَجِنَّةٞ فِي بُطُونِ أُمَّهَٰتِكُمۡۖ فَلَا تُزَكُّوٓاْ أَنفُسَكُمۡۖ هُوَ أَعۡلَمُ بِمَنِ ٱتَّقَىٰٓ ٣٢

أَفَرَءَيۡتَ ٱلَّذِي تَوَلَّىٰ ٣٣

وَأَعۡطَىٰ قَلِيلٗا وَأَكۡدَىٰٓ ٣٤

أَعِندَهُۥ عِلۡمُ ٱلۡغَيۡبِ فَهُوَ يَرَىٰٓ ٣٥

أَمۡ لَمۡ يُنَبَّأۡ بِمَا فِي صُحُفِ مُوسَىٰ ٣٦

| | |
|---|---|
| ៣៧-និងគម្ពីររបស់អ៊ីព្រហ៊ីមដែលបានបំពេញករណីយកិច្ចទេឬ? | وَإِبۡرَٰهِيمَ ٱلَّذِي وَفَّىٰٓ ٣٧ |
| ៣៨-(នោះគឺ)ពិតប្រាកដណាស់ អ្នកដែលសាងបាបកម្មមិនទទួលបន្ទុកចំពោះបាបកម្មរបស់អ្នកដទៃឡើយ។ | أَلَّا تَزِرُ وَازِرَةٞ وِزۡرَ أُخۡرَىٰ ٣٨ |
| ៣៩-ហើយសម្រាប់មនុស្សលោកមិនទទួលបានក្រៅពីអ្វីដែលខ្លួនគេបានប្រឹងប្រែងធ្វើនោះឡើយ។ | وَأَن لَّيۡسَ لِلۡإِنسَٰنِ إِلَّا مَا سَعَىٰ ٣٩ |
| ៤០-ហើយពិតប្រាកដណាស់ ការប្រឹងប្រែងរបស់គេនឹងត្រូវគេបង្ហាញឱ្យឃើញ(នៅថ្ងៃបរលោក)។ | وَأَنَّ سَعۡيَهُۥ سَوۡفَ يُرَىٰ ٤٠ |
| ៤១-បន្ទាប់មកទ្រង់នឹងតបស្នងឱ្យគេវិញនូវការតបស្នងមួយយ៉ាងពេញលេញ។ | ثُمَّ يُجۡزَىٰهُ ٱلۡجَزَآءَ ٱلۡأَوۡفَىٰ ٤١ |
| ៤២-ហើយពិតប្រាកដណាស់ ទីបញ្ចប់នៃអ្វីៗទាំងអស់គឺវិលត្រឡប់ទៅរកម្ចាស់របស់អ្នក(មូហាំម៉ាត់)វិញ។ | وَأَنَّ إِلَىٰ رَبِّكَ ٱلۡمُنتَهَىٰ ٤٢ |
| ៤៣-ហើយពិតប្រាកដណាស់ ទ្រង់ជាអ្នកដែលធ្វើឱ្យ(គ្រប់គ្នា)សើច និងធ្វើឱ្យយំ។ | وَأَنَّهُۥ هُوَ أَضۡحَكَ وَأَبۡكَىٰ ٤٣ |
| ៤៤-ហើយពិតប្រាកដណាស់ ទ្រង់ជាអ្នកដែលធ្វើឱ្យស្លាប់ និងធ្វើឱ្យរស់។ | وَأَنَّهُۥ هُوَ أَمَاتَ وَأَحۡيَا ٤٤ |
| ៤៥-ហើយពិតប្រាកដណាស់ ទ្រង់បានបង្កើតឱ្យមានគូ មានប្រុសនិងស្រី ញីនិងឈ្មោល។ | وَأَنَّهُۥ خَلَقَ ٱلزَّوۡجَيۡنِ ٱلذَّكَرَ وَٱلۡأُنثَىٰ ٤٥ |
| ៤៦-អំពីទឹកកាមនៅពេលដែលត្រូវគេបាញ់ចូលទៅក្នុងស្បូន។ | مِن نُّطۡفَةٍ إِذَا تُمۡنَىٰ ٤٦ |
| ៤៧-ហើយពិតប្រាកដណាស់ ការបង្កើតសាជាថ្មីម្តងទៀត គឺជាកាតព្វកិច្ចរបស់ទ្រង់។ | وَأَنَّ عَلَيۡهِ ٱلنَّشۡأَةَ ٱلۡأُخۡرَىٰ ٤٧ |
| ៤៨-ហើយពិតប្រាកដណាស់ ទ្រង់ជាអ្នកធ្វើឱ្យមាន និងធ្វើឱ្យគ្រប់គ្រាន់។ | وَأَنَّهُۥ هُوَ أَغۡنَىٰ وَأَقۡنَىٰ ٤٨ |
| ៤៩-ហើយពិតប្រាកដណាស់ ទ្រង់ជាម្ចាស់គ្រប់គ្រងផ្កាយស្សៀរ៉។ | وَأَنَّهُۥ هُوَ رَبُّ ٱلشِّعۡرَىٰ ٤٩ |
| ៥០-ហើយពិតប្រាកដណាស់ ទ្រង់បានបំផ្លាញក្រុមអាដមុនគេ។ | وَأَنَّهُۥٓ أَهۡلَكَ عَادًا ٱلۡأُولَىٰ ٥٠ |

وَثَمُودَاْ فَمَآ أَبۡقَىٰ ٥١

៥១-និងក្រុមសាមូដ ។ ហើយទ្រង់មិនបានបន្សល់ទុកអ្នកណាម្នាក់ឡើយ ។

وَقَوۡمَ نُوحٖ مِّن قَبۡلُۖ إِنَّهُمۡ كَانُواْ هُمۡ أَظۡلَمَ وَأَطۡغَىٰ ٥٢

៥២-ហើយ(ទ្រង់បានបំផ្លាញ)ក្រុមនួហកាលពីមុន ។ពិតប្រាកដណាស់ ពួកគេគឺជាពួកដែលធ្លាប់បានបំពាន និងរឹងរូសបំផុត ។

وَٱلۡمُؤۡتَفِكَةَ أَهۡوَىٰ ٥٣

៥៣-និងភូមិមុតាហ្វីកាស(ភូមិរបស់ក្រុមរបស់លូត)ដែលទ្រង់បានបំផ្លាញ(ធ្វើឱ្យក្រឡាប់ពីលើចុះក្រោម) ។

فَغَشَّىٰهَا مَا غَشَّىٰ ٥٤

៥៤-ហើយទ្រង់បានគ្របដណ្តប់ភូមិនោះនូវអ្វី(ទារុណកម្មអំពីថ្មភ្លើង)ដែលបានគ្របដណ្តប់ ។

فَبِأَيِّ ءَالَآءِ رَبِّكَ تَتَمَارَىٰ ٥٥

៥៥-ដូច្នេះ តើនៀកម៉ាត់នៃម្ចាស់របស់អ្នកណាមួយដែលអ្នកនៅសង្ស័យនោះ?

هَٰذَا نَذِيرٞ مِّنَ ٱلنُّذُرِ ٱلۡأُولَىٰٓ ٥٦

៥៦-នេះ(មូហាំម៉ាត់)គឺជាអ្នកដាស់តឿនព្រមានម្នាក់ក្នុងចំណោមអ្នកដាស់តឿនព្រមានមុនៗ ។

أَزِفَتِ ٱلۡأٓزِفَةُ ٥٧

៥៧-ថ្ងៃបរលោកខិតកាន់តែជិតហើយ ។

لَيۡسَ لَهَا مِن دُونِ ٱللَّهِ كَاشِفَةٌ ٥٨

៥៨-គ្មានអ្នកណាដឹងពីវាក្រៅពីអល់ឡោះឡើយ ។

أَفَمِنۡ هَٰذَا ٱلۡحَدِيثِ تَعۡجَبُونَ ٥٩

៥៩-ដូច្នេះ តើពួកអ្នកងឿងឆ្ងល់ចំពោះពាក្យសំដី(គម្ពីរគួរអាន)នេះឬ ?

وَتَضۡحَكُونَ وَلَا تَبۡكُونَ ٦٠

៦០-ហើយពួកអ្នកនាំគ្នាសើចចំអក(ចំពោះគម្ពីរគួរអាន)ហើយពួកអ្នកមិនយំ(ដោយការភ័យខ្លាចទារុណកម្មដែលបានរៀបរាប់នៅក្នុងវា)ទេឬ?

وَأَنتُمۡ سَٰمِدُونَ ٦١

៦១-ខណៈដែលពួកអ្នកព្រងើយកន្តើយងាកចេញ(ពីគម្ពីរគួរអាន)នោះ?

فَٱسۡجُدُواْۤ لِلَّهِۤ وَٱعۡبُدُواْ۩ ٦٢

៦២-ដូច្នេះ ចូរពួកអ្នកស៊ូជូត និងគោរពសក្ការៈចំពោះអល់ឡោះចុះ ។

## سورة القمر

## ជំពូកអាល់កម៉ើរ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

ٱقۡتَرَبَتِ ٱلسَّاعَةُ وَٱنشَقَّ ٱلۡقَمَرُ ١

១-កាលកំណត់នៃថ្ងៃបរលោកជិតមកដល់ ហើយព្រះច័ន្ទក៏បានបែកជាពីរដែរ[១] ។

وَإِن يَرَوۡاْ ءَايَةٗ يُعۡرِضُواْ وَيَقُولُواْ سِحۡرٞ مُّسۡتَمِرّٞ ٢

២-តែទោះបីជាពួកគេបានឃើញមុជីហ្សាត់ក៏ដោយ ក៏ពួកគេនៅតែងាកចេញ ហើយនិយាយថាៈ នេះគឺជាមន្តអាគមដ៏ច្បាស់លាស់ដែរ ។

وَكَذَّبُواْ وَٱتَّبَعُوٓاْ أَهۡوَآءَهُمۡۚ وَكُلُّ أَمۡرٖ مُّسۡتَقِرّٞ ٣

៣-ហើយពួកគេថែមទាំងបានបដិសេធ និងធ្វើតាមចំណង់របស់ពួកគេទៀតផង ។ ហើយរាល់កិច្ចការទាំងអស់គឺមានការកំណត់ ។

وَلَقَدۡ جَآءَهُم مِّنَ ٱلۡأَنۢبَآءِ مَا فِيهِ مُزۡدَجَرٌ ٤

៤-ហើយជាការពិតណាស់ ដំណឹងមួយចំនួន( របស់ពួកជំនាន់មុន) បានមកដល់ពួកគេ( ពួកមូស្ហរីគីន) ដែលនៅក្នុងនោះមានការហាមឃាត់គ្រប់គ្រាន់( ពីភាពគ្មានជំនឿរបស់ពួកគេ) ។

حِكۡمَةُۢ بَٰلِغَةٞۖ فَمَا تُغۡنِ ٱلنُّذُرُ ٥

៥-គម្ពីរគួរអានគឺជាគតិបណ្ឌិតដ៏គ្រប់គ្រាន់( ក្នុងការដាស់តឿនព្រមាន) តែការដាស់តឿនព្រមានទាំងនោះមិនផ្ដល់ផលប្រយោជន៍អ្វី( ដល់ពួកគេ) ឡើយ ។

فَتَوَلَّ عَنۡهُمۡۘ يَوۡمَ يَدۡعُ ٱلدَّاعِ إِلَىٰ شَيۡءٖ نُّكُرٍ ٦

៦-ដូច្នេះ ចូរអ្នក( មូហាំម៉ាត់) បែរចេញពីពួកគេ ។ ( ចូរចងចាំ) នៅថ្ងៃដែលម៉ាឡាអ៊ីកាត់ស្រែកហៅ( ពួកគេ) ឱ្យទៅកាន់កន្លែងជំនុំជំរះដែលជាហេតុការណ៍មួយដ៏រន្ធត់ ។

خُشَّعًا أَبۡصَٰرُهُمۡ يَخۡرُجُونَ مِنَ ٱلۡأَجۡدَاثِ كَأَنَّهُمۡ جَرَادٞ مُّنتَشِرٞ ٧

៧-ដោយភ្នែករបស់ពួកគេទម្លាក់ចុះ ខណៈដែលពួកគេចេញពីផ្នូរ ពួកគេហាក់ដូចជាសត្វកណ្ដូបដែលនៅរាយពាសពេញលើផ្ទៃដី ។

مُّهۡطِعِينَ إِلَى ٱلدَّاعِۖ يَقُولُ ٱلۡكَٰفِرُونَ هَٰذَا يَوۡمٌ عَسِرٞ ٨

៨-ដោយពួកគេប្រញាប់ប្រញាល់ឆ្ពោះទៅកាន់អ្នកដែលស្រែកហៅ ។ ពួកដែលប្រឆាំងបាននិយាយថាៈ ថ្ងៃនេះគឺជាថ្ងៃដែលលំបាកវេទនាបំផុត ។

۞كَذَّبَتۡ قَبۡلَهُمۡ قَوۡمُ نُوحٖ فَكَذَّبُواْ عَبۡدَنَا وَقَالُواْ مَجۡنُونٞ وَٱزۡدُجِرَ ٩

៩-ក្រុមនូហបានបដិសេធមុនពួកគេ( អាវ៉ាប់គូរ៉ស្ហ) ហើយពួកគេបានបដិសេធនឹងខ្ញុំរបស់យើង( នូហ) និងបាននិយាយថាៈ គេ

១-នៅជំនាន់នោះពួកមូស្ហរីគីនម៉ាក្កះបានសុំឱ្យមូហាំម៉ាត់បង្ហាញភាពអស្ចារ្យដល់ពួកគេ ហើយអល់ឡោះក៏ធ្វើឱ្យព្រះច័ន្ទបែកជាពីរ ដើម្បីបញ្ជាក់ពីបាដិហារិយ៍របស់អ្នកនាំសារ ។

ជាមនុស្សវិកលចរិត ហើយគេត្រូវបានគេគំរាមថែមទៀត ។

فَدَعَا رَبَّهُۥٓ أَنِّي مَغۡلُوبٞ فَٱنتَصِرۡ ١٠

១០-ពេលនោះគេ(នូហ)ក៏បានបួងសួងសុំពីម្ចាស់របស់គេថាៈ ពិតប្រាកដណាស់ ខ្ញុំអសមត្ថភាពហើយ ដូច្នេះសូមទ្រង់មេត្តាជួយដល់ខ្ញុំផង ។

فَفَتَحۡنَآ أَبۡوَٰبَ ٱلسَّمَآءِ بِمَآءٖ مُّنۡهَمِرٖ ١١

១១-ដូច្នេះ យើងក៏បានបើកទ្វារមេឃដោយបង្ហូរទឹកភ្លៀងជាច្រើន ។

وَفَجَّرۡنَا ٱلۡأَرۡضَ عُيُونٗا فَٱلۡتَقَى ٱلۡمَآءُ عَلَىٰٓ أَمۡرٖ قَدۡ قُدِرَ ١٢

១២-ហើយយើងបានធ្វើឱ្យផែនដីបញ្ចេញនូវប្រភពទឹកជាច្រើន ពេលនោះទឹកក៏បានជួបគ្នា(ទឹកធ្លាក់ពីលើមេឃ និងទឹកដែលចេញពីដី)ទៅតាមផែនការដែលគេបានកំណត់ដ៏ពិតប្រាកដ ។

وَحَمَلۡنَٰهُ عَلَىٰ ذَاتِ أَلۡوَٰحٖ وَدُسُرٖ ١٣

១៣-ហើយយើងបានសង្គ្រោះគេឱ្យជិះលើសំពៅដែលធ្វើអំពីក្ដារ និងដែកគោល

تَجۡرِي بِأَعۡيُنِنَا جَزَآءٗ لِّمَن كَانَ كُفِرَ ١٤

១៤-ដែលវាធ្វើដំណើរក្រោមក្រសែភ្នែករបស់យើងគឺជាការតបស្នងចំពោះអ្នកដែលត្រូវបានគេប្រឆាំង(នូហ) ។

وَلَقَد تَّرَكۡنَٰهَآ ءَايَةٗ فَهَلۡ مِن مُّدَّكِرٖ ١٥

១៥-ហើយជាការពិតណាស់ យើងបានបន្សល់ទុកវា(រឿងរបស់នូហ)ជាភស្តុតាងមួយ(បញ្ជាក់ពីសមត្ថភាពរបស់យើងសម្រាប់មនុស្សលោក) ។ ដូច្នេះ តើមានអ្នកណាយកធ្វើជាមេរៀនដែរឬទេ?

فَكَيۡفَ كَانَ عَذَابِي وَنُذُرِ ١٦

១៦-ដូច្នេះ តើទារុណកម្មរបស់យើង និងការព្រមានរបស់យើងយ៉ាងដូចម្ដេចដែរ ?

وَلَقَدۡ يَسَّرۡنَا ٱلۡقُرۡءَانَ لِلذِّكۡرِ فَهَلۡ مِن مُّدَّكِرٖ ١٧

១៧-ហើយពិតប្រាកដណាស់ យើងបានធ្វើឱ្យគម្ពីរគួរអានមានការងាយស្រួលសម្រាប់ការចងចាំ ។ ដូច្នេះ តើមានអ្នកដែលយកធ្វើជាមេរៀនដែរឬទេ?

كَذَّبَتۡ عَادٞ فَكَيۡفَ كَانَ عَذَابِي وَنُذُرِ ١٨

១៨-ក្រុមអាដបានបដិសេធ(នឹងអ្នកនាំសាររបស់ពួកគេ) ។ ដូច្នេះ តើទារុណកម្មរបស់យើង និងការព្រមានរបស់យើងយ៉ាងដូចម្ដេចដែរ ?

إِنَّآ أَرۡسَلۡنَا عَلَيۡهِمۡ رِيحٗا صَرۡصَرٗا فِي يَوۡمِ نَحۡسٖ

១៩-ពិតប្រាកដណាស់ យើងបានបញ្ជូនខ្យល់ព្យុះដ៏ត្រជាក់បក់បោកទៅលើពួកគេយ៉ាងខ្លាំងនៅថ្ងៃមហន្តរាយជាបន្តបន្ទាប់ ។

مُّسۡتَمِرّٖ ﴿١٩﴾

تَنزِعُ ٱلنَّاسَ كَأَنَّهُمۡ أَعۡجَازُ نَخۡلٖ مُّنقَعِرٖ ﴿٢٠﴾

២០-ខ្យល់ព្យុះបានគួចយកមនុស្សលោក ពួកគេហាក់បីដូចជាគល់ល្មើដែលរលើងចេញពីដី ។

فَكَيۡفَ كَانَ عَذَابِي وَنُذُرِ ﴿٢١﴾

២១-ដូច្នេះ តើទារុណកម្មរបស់យើង និងការព្រមានរបស់យើងយ៉ាងដូចម្ដេចដែរ ?

وَلَقَدۡ يَسَّرۡنَا ٱلۡقُرۡءَانَ لِلذِّكۡرِ فَهَلۡ مِن مُّدَّكِرٖ ﴿٢٢﴾

២២-ហើយពិតប្រាកដណាស់ យើងបានធ្វើឱ្យគម្ពីរគួរអានមានការងាយស្រួលសម្រាប់ការចងចាំ ។ ដូច្នេះ តើមានអ្នកដែលយកធ្វើជាមេរៀនដែរឬទេ ?

كَذَّبَتۡ ثَمُودُ بِٱلنُّذُرِ ﴿٢٣﴾

២៣-ក្រុមសាមូដបានបដិសេធនឹងការដាស់តឿនព្រមាន ។

فَقَالُوٓاْ أَبَشَرٗا مِّنَّا وَٰحِدٗا نَّتَّبِعُهُۥٓ إِنَّآ إِذٗا لَّفِي ضَلَٰلٖ وَسُعُرٍ ﴿٢٤﴾

២៤-ហើយពួកគេបាននិយាយថា: តើពួកយើងតាមគេដែលជាមនុស្សម្នាក់ក្នុងចំណោមពួកយើងឬ? បើដូច្នោះមែន ពួកយើងពិតជាស្ថិតក្នុងភាពវង្វេង និងវិកលចរិតជាមិនខាន ។

أَءُلۡقِيَ ٱلذِّكۡرُ عَلَيۡهِ مِنۢ بَيۡنِنَا بَلۡ هُوَ كَذَّابٌ أَشِرٞ ﴿٢٥﴾

២៥-តើគេបញ្ចុះវ៉ាហ៊ីឱ្យគេ( សឡេះ) ដោយរំលងពួកយើងឬ? ផ្ទុយទៅវិញ គេជាមនុស្សភូតកុហក និងអំនួតក្អេងក្អាង ។

سَيَعۡلَمُونَ غَدٗا مَّنِ ٱلۡكَذَّابُ ٱلۡأَشِرُ ﴿٢٦﴾

២៦-ពួកគេគង់តែនឹងដឹងនៅថ្ងៃខាងមុខ( ថ្ងៃបរលោក) ថា: អ្នកណាជាអ្នកភូតកុហកនិងជាអ្នកដែលអួតអាងនោះ ។

إِنَّا مُرۡسِلُواْ ٱلنَّاقَةِ فِتۡنَةٗ لَّهُمۡ فَٱرۡتَقِبۡهُمۡ وَٱصۡطَبِرۡ ﴿٢٧﴾

២៧-ពិតប្រាកដណាស់ យើងជាអ្នកដែលបញ្ជូនសត្វអូដ្ឋញីមួយក្បាល( ចេញពីថ្ម) ដើម្បីជាការសាកល្បងពួកគេ ។ ដូច្នេះចូរអ្នករង់ចាំមើលពួកគេ និងអត់ធ្មត់ចុះ ។

وَنَبِّئۡهُمۡ أَنَّ ٱلۡمَآءَ قِسۡمَةُۢ بَيۡنَهُمۡۖ كُلُّ شِرۡبٖ مُّحۡتَضَرٞ ﴿٢٨﴾

២៨-ហើយចូរអ្នកប្រាប់ពួកគេថា: ពិតប្រាកដណាស់ ទឹក( អណ្ដូង) នោះគឺត្រូវបានគេបែងចែករវាងពួកគេ( មួយថ្ងៃសម្រាប់សត្វអូដ្ឋ មួយថ្ងៃសម្រាប់ពួកគេ) ។ រាល់ពេលត្រូវផឹកគឺត្រូវមកតាមវេន ។

فَنَادَوۡاْ صَاحِبَهُمۡ فَتَعَاطَىٰ فَعَقَرَ ﴿٢٩﴾

២៩-តែ( ពួកគេមិនសុខចិត្ត) ពួកគេបានហៅមិត្តភក្ដិរបស់ពួកគេម្នាក់ ហើយគេបានយកដាវ រួចក៏សំឡេះសត្វអូដ្ឋនោះ ។

فَكَيۡفَ كَانَ عَذَابِي وَنُذُرِ ﴿٣٠﴾

៣០-ដូច្នេះ តើទារុណកម្ម និងការព្រមានរបស់យើងយ៉ាងដូច

ម្តេចដែរ?

إِنَّآ أَرۡسَلۡنَا عَلَيۡهِمۡ صَيۡحَةٗ وَٰحِدَةٗ فَكَانُواْ كَهَشِيمِ ٱلۡمُحۡتَظِرِ ٣١

៣១- ពិតប្រាកដណាស់ យើងបានបញ្ជូនសម្រែកមួយយ៉ាងខ្លាំងទៅលើពួកគេ ពេលនោះពួកគេប្រៀបដូចជារុក្ខជាតិស្ងួតរបស់ម្ចាស់ក្រោលសត្វពាហនៈ ។

وَلَقَدۡ يَسَّرۡنَا ٱلۡقُرۡءَانَ لِلذِّكۡرِ فَهَلۡ مِن مُّدَّكِرٖ ٣٢

៣២-ហើយពិតប្រាកដណាស់ យើងបានធ្វើឱ្យគម្ពីរគួរអានមានការងាយស្រួលសម្រាប់ការចងចាំ ។ ដូច្នេះ តើមានអ្នកដែលយកធ្វើជាមេរៀនដែរឬទេ ?

كَذَّبَتۡ قَوۡمُ لُوطِۭ بِٱلنُّذُرِ ٣٣

៣៣-ក្រុមរបស់លូតបានបដិសេធនឹងការដាស់តឿនព្រមាន ។

إِنَّآ أَرۡسَلۡنَا عَلَيۡهِمۡ حَاصِبًا إِلَّآ ءَالَ لُوطٖۖ نَّجَّيۡنَٰهُم بِسَحَرٖ ٣٤

៣៤-ពិតប្រាកដណាស់ យើងបានបញ្ជូនខ្យល់ព្យុះនាំដុំថ្មទម្លាក់លើពួកគេទាំងអស់ លើកលែងតែក្រុមគ្រួសាររបស់លូត( អ្នកដែលរួមជំនឿជាមួយគាត់) ប៉ុណ្ណោះ ដែលយើងបានសង្គ្រោះពួកគេនៅវេលាមុនទៀបភ្លឺ ។

نِّعۡمَةٗ مِّنۡ عِندِنَاۚ كَذَٰلِكَ نَجۡزِي مَن شَكَرَ ٣٥

៣៥-ជានៀកម៉ាត់ពីយើង ។ ដូច្នោះដែរ យើងតបស្នងចំពោះអ្នកណាដែលបានដឹងគុណ ។

وَلَقَدۡ أَنذَرَهُم بَطۡشَتَنَا فَتَمَارَوۡاْ بِٱلنُّذُرِ ٣٦

៣៦-ហើយជាការពិតណាស់ គេ( លូត) បានដាស់តឿនព្រមានពួកគេពីទណ្ឌកម្មរបស់យើង តែពួកគេបែរជាបដិសេធនឹងការដាស់តឿនព្រមាននោះទៅវិញ ។

وَلَقَدۡ رَٰوَدُوهُ عَن ضَيۡفِهِۦ فَطَمَسۡنَآ أَعۡيُنَهُمۡ فَذُوقُواْ عَذَابِي وَنُذُرِ ٣٧

៣៧-ហើយជាការពិតណាស់ ពួកគេបានលួងលោមគេ( លូត) សុំការរួមរ័កជាមួយភ្ញៀវរបស់គេ ។ ក្រោយមកយើងធ្វើឱ្យភ្នែករបស់ពួកគេងងឹត ហើយ( យើងបានមានបន្ទូលទៅកាន់ពួកគេថា) ចូរពួកអ្នកភ្លក្សនូវទារុណកម្ម និងការព្រមានរបស់យើងចុះ ។

وَلَقَدۡ صَبَّحَهُم بُكۡرَةً عَذَابٞ مُّسۡتَقِرّٞ ٣٨

៣៨-ហើយជាការពិតណាស់ ទារុណកម្មជានិរន្តរ៍បានធ្លាក់លើពួកគេទាំងព្រឹកព្រហាម ។

فَذُوقُواْ عَذَابِي وَنُذُرِ ٣٩

៣៩-ដូច្នេះ ( យើងបានមានបន្ទូលទៅកាន់ពួកគេថា) ចូរពួកអ្នកភ្លក្សទារុណកម្ម និងការព្រមានរបស់យើងចុះ ។

وَلَقَدۡ يَسَّرۡنَا ٱلۡقُرۡءَانَ لِلذِّكۡرِ فَهَلۡ مِن

៤០-ហើយពិតប្រាកដណាស់ យើងបានធ្វើឱ្យគម្ពីរគួរអានមាន

مُّدَّكِرٖ ﴿٤٠﴾

ការងាយស្រួលសម្រាប់ការចងចាំ។ ដូច្នេះ តើមានអ្នកដែលយកធ្វើជាមេរៀនដែរឬទេ ?

وَلَقَدۡ جَآءَ ءَالَ فِرۡعَوۡنَ ٱلنُّذُرُ ﴿٤١﴾

៤១-ហើយជាការពិតណាស់ ការដាស់តឿនព្រមានបានមកដល់វង្សត្រកូលរបស់ហ្វៀរអោន។

كَذَّبُواْ بِـَٔايَٰتِنَا كُلِّهَا فَأَخَذۡنَٰهُمۡ أَخۡذَ عَزِيزٖ مُّقۡتَدِرٍ ﴿٤٢﴾

៤២-ពួកគេបានបដិសេធនឹងភស្តុតាងរបស់យើងទាំងអស់។ ហើយយើងបានដាក់ទារុណកម្មពួកគេនូវទារុណកម្មរបស់អ្នកដែលមហាខ្លាំងក្លា មហាមានអានុភាព។

أَكُفَّارُكُمۡ خَيۡرٞ مِّنۡ أُوْلَٰٓئِكُمۡ أَمۡ لَكُم بَرَآءَةٞ فِي ٱلزُّبُرِ ﴿٤٣﴾

៤៣- តើពួកប្រឆាំងរបស់ពួកអ្នក(អារ៉ាប់គូរ៉ស្ហ) ប្រសើរជាងពួកប្រឆាំងមុនៗ ឬមួយក៏ពួកអ្នកមានការធានា (ឱ្យរួចផុតពីទារុណកម្មរបស់អល់ឡោះ)នៅក្នុងគម្ពីរមុនៗឬ?

أَمۡ يَقُولُونَ نَحۡنُ جَمِيعٞ مُّنتَصِرٞ ﴿٤٤﴾

៤៤- ឬមួយពួកគេនិយាយថា: ពួកយើងទាំងអស់គ្នា គឺជាក្រុមមួយដែលឈ្នះ?

سَيُهۡزَمُ ٱلۡجَمۡعُ وَيُوَلُّونَ ٱلدُّبُرَ ﴿٤٥﴾

៤៥- ក្រុមមួយនោះ នឹងត្រូវបរាជ័យ ហើយរត់ត្រឡប់ក្រោយជាមិនខាន។

بَلِ ٱلسَّاعَةُ مَوۡعِدُهُمۡ وَٱلسَّاعَةُ أَدۡهَىٰ وَأَمَرُّ ﴿٤٦﴾

៤៦-ផ្ទុយទៅវិញ កាលកំណត់នៃថ្ងៃបរលោកគឺជាការសន្យា (ធ្វើទារុណកម្ម)ពួកគេ ហើយកាលកំណត់នៃថ្ងៃបរលោក គឺឈឺចាប់ និងល្វីងជូរចត់បំផុត។

إِنَّ ٱلۡمُجۡرِمِينَ فِي ضَلَٰلٖ وَسُعُرٖ ﴿٤٧﴾

៤៧-ពិតប្រាកដណាស់ ពួកដែលប្រព្រឹត្តបាបកម្មគឺស្ថិតក្នុងភាពវង្វេង និងស្ថិតក្នុងនរកដែលឆាបឆេះសន្ធោសន្ធៅ។

يَوۡمَ يُسۡحَبُونَ فِي ٱلنَّارِ عَلَىٰ وُجُوهِهِمۡ ذُوقُواْ مَسَّ سَقَرَ ﴿٤٨﴾

៤៨-នៅថ្ងៃដែលពួកគេត្រូវគេអូសផ្កាប់មុខទៅក្នុងនរក។ (មានគេនិយាយទៅកាន់ពួកគេថា) ចូរពួកអ្នកភ្លក្សនូវរសជាតិនៃភ្លើងនរកនេះចុះ។

إِنَّا كُلَّ شَيۡءٍ خَلَقۡنَٰهُ بِقَدَرٖ ﴿٤٩﴾

៤៩-ពិតប្រាកដណាស់ រាល់អ្វីៗទាំងអស់យើងបានបង្កើតវាដោយមានកំណត់រួចជាស្រេច។

وَمَآ أَمۡرُنَآ إِلَّا وَٰحِدَةٞ كَلَمۡحِۭ بِٱلۡبَصَرِ ﴿٥٠﴾

៥០-ហើយបទបញ្ជារបស់យើង(ទៅកាន់អ្វីមួយ) គឺគ្រាន់តែយើងពោលពាក្យមួយម៉ាត់(វានឹងកើតឡើងភ្លាម)ដូចជា មួយប៉ប្រិចភ្នែកប៉ុណ្ណោះ។

وَلَقَدۡ أَهۡلَكۡنَآ أَشۡيَاعَكُمۡ فَهَلۡ مِن مُّدَّكِرٖ ﴿٥١﴾

៥១-ហើយជាការពិតណាស់ យើងបានបំផ្លាញពួកដែលបានប្រឆាំងដូចពួកអ្នក។ ដូច្នេះ តើមានអ្នកណាយកធ្វើជាមេរៀនដែរឬទេ?

وَكُلُّ شَيۡءٖ فَعَلُوهُ فِي ٱلزُّبُرِ ﴿٥٢﴾

៥២- ហើយរាល់អ្វីៗដែលពួកគេបានប្រព្រឹត្តវាគឺស្ថិតនៅក្នុងសៀវភៅកំណត់ហេតុ(ដែលម៉ាឡាអ៊ីកាត់បានសរសេរ)។

وَكُلُّ صَغِيرٖ وَكَبِيرٖ مُّسۡتَطَرٌ ﴿٥٣﴾

៥៣-ហើយរាល់កិច្ចការតូច និងធំគឺត្រូវគេកត់ត្រា។

إِنَّ ٱلۡمُتَّقِينَ فِي جَنَّٰتٖ وَنَهَرٖ ﴿٥٤﴾

៥៤-ពិតប្រាកដណាស់ បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ គឺស្ថិតនៅក្នុងឋានសួគ៌ និងមានទន្លេជាច្រើន

فِي مَقۡعَدِ صِدۡقٍ عِندَ مَلِيكٖ مُّقۡتَدِرِۭ ﴿٥٥﴾

៥៥-ដែលស្ថិតនៅកន្លែងសច្ចៈក្បែរម្ចាស់ដែលមានអំណាច មានអានុភាពបំផុត។

## سورة الرحمن

## ជំពូកអើររ៉ោះម៉ាន

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

ٱلرَّحۡمَٰنُ ﴿١﴾

១-អល់ឡោះមហាសប្បុរស។

عَلَّمَ ٱلۡقُرۡءَانَ ﴿٢﴾

២-ទ្រង់បានបង្រៀនគម្ពីរគួរអាន(ដល់មនុស្សលោក)។

خَلَقَ ٱلۡإِنسَٰنَ ﴿٣﴾

៣-ទ្រង់បានបង្កើតមនុស្សលោក។

عَلَّمَهُ ٱلۡبَيَانَ ﴿٤﴾

៤-ទ្រង់បានបង្រៀនគេឱ្យចេះបរិយាយសព្វបែបយ៉ាង។

ٱلشَّمۡسُ وَٱلۡقَمَرُ بِحُسۡبَانٖ ﴿٥﴾

៥-ព្រះអាទិត្យ និងព្រះច័ន្ទធ្វើដំណើរតាមការកំណត់ដ៏ជាក់លាក់។

وَٱلنَّجۡمُ وَٱلشَّجَرُ يَسۡجُدَانِ ﴿٦﴾

៦-ហើយរុក្ខជាតិ(ដែលវារនៅលើដី) និងដើមឈើនានាស៊ូជូត(ចំពោះអល់ឡោះ)។

وَٱلسَّمَآءَ رَفَعَهَا وَوَضَعَ ٱلۡمِيزَانَ ﴿٧﴾

៧-ហើយមេឃ ទ្រង់បានលើកវាឱ្យខ្ពស់ ហើយទ្រង់បានបង្កើតឱ្យមានភាពយុត្តិធម៌(នៅលើផែនដី)

أَلَّا تَطۡغَوۡاْ فِي ٱلۡمِيزَانِ ﴿٨﴾

៨-ដើម្បីកុំឱ្យពួកអ្នកបំពានលើភាពយុត្តិធម៌នោះ។

وَأَقِيمُواْ ٱلۡوَزۡنَ بِٱلۡقِسۡطِ وَلَا تُخۡسِرُواْ

៩-ហើយចូរពួកអ្នកប្រតិបត្តិក្នុងការថ្លឹងឱ្យបានត្រឹមត្រូវ ហើយ

ٱلۡمِيزَانَ ٩

កុំធ្វើឱ្យខ្វះភ្លែកជញ្ជីងឱ្យសោះ។

وَٱلۡأَرۡضَ وَضَعَهَا لِلۡأَنَامِ ١٠

១០-ហើយផែនដី ទ្រង់បានបង្កើតវា(រាបស្មើ)សម្រាប់សត្វលោក។

فِيهَا فَٰكِهَةٞ وَٱلنَّخۡلُ ذَاتُ ٱلۡأَكۡمَامِ ١١

១១-ដោយនៅលើវា មានផ្លែឈើ និងដើមល្មើដែលមានចង្កោមផ្លែជាច្រើន។

وَٱلۡحَبُّ ذُو ٱلۡعَصۡفِ وَٱلرَّيۡحَانُ ١٢

១២-និងគ្រាប់ធញ្ញជាតិដែលមានសំបក ព្រមទាំងរុក្ខជាតិដែលមានក្លិនក្រអូប។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ١٣

១៣-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

خَلَقَ ٱلۡإِنسَٰنَ مِن صَلۡصَٰلٖ كَٱلۡفَخَّارِ ١٤

១៤-ទ្រង់បានបង្កើតមនុស្សលោក(អាដាំ)ពីដីឥដ្ឋស្ងួត ដូចជាដីដែលគេស្ងួនជាសំភារៈ។

وَخَلَقَ ٱلۡجَآنَّ مِن مَّارِجٖ مِّن نَّارٖ ١٥

១៥-ហើយទ្រង់បានបង្កើតជិនអំពីអណ្តាតភ្លើង។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ١٦

១៦-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

رَبُّ ٱلۡمَشۡرِقَيۡنِ وَرَبُّ ٱلۡمَغۡرِبَيۡنِ ١٧

១៧-(អល់ឡោះ)ជាម្ចាស់កន្លែងទាំងពីរនៃព្រះអាទិត្យរះ(ពេលរដូវក្តៅ និងរដូវរងា) និងជាម្ចាស់កន្លែងទាំងពីរនៃព្រះអាទិត្យលិច(ពេលរដូវក្តៅ និងរដូវរងា)។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ١٨

១៨-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

مَرَجَ ٱلۡبَحۡرَيۡنِ يَلۡتَقِيَانِ ١٩

១៩-ទ្រង់បានធ្វើឱ្យសមុទ្រពីរ(ទឹកសាបនិងទឹកប្រៃ)ជួបគ្នា។

بَيۡنَهُمَا بَرۡزَخٞ لَّا يَبۡغِيَانِ ٢٠

២០-នៅរវាងវាទាំងពីរមានរនាំងខណ្ឌមិនឱ្យជ្រាបចូលគ្នា។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٢١

២១-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

يَخۡرُجُ مِنۡهُمَا ٱللُّؤۡلُؤُ وَٱلۡمَرۡجَانُ ٢٢

២២-គជខ្យង និងផ្កាថ្មចេញពីវាទាំងពីរ(សមុទ្រទឹកសាប និងទឹកប្រៃ)។

٢٣-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ ?

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٢٣﴾

២៤-ហើយនាវាធំៗដែលធ្វើដំណើរនៅលើផ្ទៃសមុទ្រហាក់ដូចជាភ្នំនោះ គឺជាកម្មសិទ្ធិរបស់ទ្រង់។

وَلَهُ ٱلْجَوَارِ ٱلْمُنشَـَٔاتُ فِى ٱلْبَحْرِ كَٱلْأَعْلَـٰمِ ﴿٢٤﴾

២៥-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ?

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٢٥﴾

២៦-អ្វីៗទាំងអស់នៅលើផែនដីនឹងវិនាសអន្តរាយ។

كُلُّ مَنْ عَلَيْهَا فَانٍ ﴿٢٦﴾

២៧-ហើយវង់ភក្ត្រនៃម្ចាស់របស់អ្នក (មូហាំម៉ាត់) ដែលមហាខ្ពង់ខ្ពស់និងមហាថ្កុំថ្កើងតែមួយគត់ដែលនៅគង់វង្សជាអមតៈ។

وَيَبْقَىٰ وَجْهُ رَبِّكَ ذُو ٱلْجَلَـٰلِ وَٱلْإِكْرَامِ ﴿٢٧﴾

២៨-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ?

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٢٨﴾

២៩-អ្នកដែលនៅលើមេឃជាច្រើនជាន់ នឹងផែនដីតែងតែបួងសួងសុំពីទ្រង់។ ទ្រង់រៀបចំកិច្ចការរបស់ទ្រង់ជារៀងរាល់ថ្ងៃ។

يَسْـَٔلُهُۥ مَن فِى ٱلسَّمَـٰوَٰتِ وَٱلْأَرْضِ ۚ كُلَّ يَوْمٍ هُوَ فِى شَأْنٍ ﴿٢٩﴾

៣០-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ?

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٣٠﴾

៣១-យើងនឹងធ្វើការទូទាត់ពួកអ្នកទាំងអស់ ឱមនុស្សលោកនិងជិន!

سَنَفْرُغُ لَكُمْ أَيُّهَ ٱلثَّقَلَانِ ﴿٣١﴾

៣២-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ?

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٣٢﴾

៣៣-ឱបណ្តាជិននិងមនុស្សលោក! ប្រសិនបើពួកអ្នកមានសមត្ថភាពអាចធ្វើដំណើរឆ្លងកាត់គ្រប់ទិសទីនៃមេឃជាច្រើនជាន់និងផែនដី ចូរពួកអ្នកឆ្លងកាត់ចុះ។ ពួកអ្នកមិនអាចធ្វើដំណើរឆ្លងកាត់បានឡើយ លើកលែងតែមានការអនុញ្ញាត (ពីយើង)។

يَـٰمَعْشَرَ ٱلْجِنِّ وَٱلْإِنسِ إِنِ ٱسْتَطَعْتُمْ أَن تَنفُذُوا۟ مِنْ أَقْطَارِ ٱلسَّمَـٰوَٰتِ وَٱلْأَرْضِ فَٱنفُذُوا۟ ۚ لَا تَنفُذُونَ إِلَّا بِسُلْطَـٰنٍ ﴿٣٣﴾

៣៤-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ?

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٣٤﴾

يُرۡسَلُ عَلَيۡكُمَا شُوَاظٞ مِّن نَّارٖ وَنُحَاسٞ فَلَا
تَنتَصِرَانِ ٣٥

៣៥- មានគេបញ្ជូនអណ្តាតភ្លើង និងលោហធាតុរំលាយទៅដុតអ្នកទាំងពីរ( មនុស្សលោក និងជិន)ហើយអ្នកទាំងពីរមិនអាចរារាំងបានឡើយ ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٣٦

៣៦-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ( មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ ?

فَإِذَا ٱنشَقَّتِ ٱلسَّمَآءُ فَكَانَتۡ وَرۡدَةٗ
كَٱلدِّهَانِ ٣٧

៣៧-នៅពេលដែលមេឃប្រេះបែក( នៅថ្ងៃបរលោក)គឺវាមានពណ៌ក្រហមផ្កាកូលាបដូចជាប្រេងដែលកំពុងពុះ ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٣٨

៣៨-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ( មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

فَيَوۡمَئِذٖ لَّا يُسۡـَٔلُ عَن ذَنۢبِهِۦٓ إِنسٞ
وَلَا جَآنّٞ ٣٩

៣៩-ហើយនៅថ្ងៃនោះ មនុស្សលោក និងជិនមិនត្រូវគេសួរអំពីបាបកម្មរបស់គេឡើយ ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٤٠

៤០-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ( មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

يُعۡرَفُ ٱلۡمُجۡرِمُونَ بِسِيمَٰهُمۡ فَيُؤۡخَذُ
بِٱلنَّوَٰصِي وَٱلۡأَقۡدَامِ ٤١

៤១-ពួកដែលសាងបាបកម្មនឹងត្រូវគេស្គាល់តាមរយៈសញ្ញាសំគាល់របស់ពួកគេ( មានពណ៌ខ្មៅនៅលើផ្ទៃមុខ) ហើយពួកគេត្រូវគេចាប់សក់បង្ហើយ និងជើង( បោះគ្រវែងចូលទៅក្នុងនរក) ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٤٢

៤២-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ( មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

هَٰذِهِۦ جَهَنَّمُ ٱلَّتِي يُكَذِّبُ بِهَا
ٱلۡمُجۡرِمُونَ ٤٣

៤៣-នេះគឺជានរកជើហាន់ណាំដែលពួកប្រព្រឹត្តបាបកម្មបដិសេធនឹងវា ។

يَطُوفُونَ بَيۡنَهَا وَبَيۡنَ حَمِيمٍ ءَانٖ ٤٤

៤៤-ពួកគេវិលវល់រវាងនរកជើហាន់ណាំ និងទឹកក្តៅដែលពុះយ៉ាងខ្លាំង ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٤٥

៤៥-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ( មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

وَلِمَنۡ خَافَ مَقَامَ رَبِّهِۦ جَنَّتَانِ ٤٦

៤៦-ហើយសម្រាប់អ្នកណាដែលបានកោតខ្លាច នៅពេល

ប្រឈមមុខចំពោះម្ចាស់របស់គេ(ដើម្បីកាត់សេចក្តី)គឺទទួលបាន
ឋានសួគ៌ពីរ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٤٧

៤៧-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ
(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

ذَوَاتَآ أَفۡنَانٖ ٤٨

៤៨-(ឋានសួគ៌ទាំងពីរនោះ)មានមែកឈើដែលមានផ្លែគ្រប់
ប្រភេទ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٤٩

៤៩-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ
(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

فِيهِمَا عَيۡنَانِ تَجۡرِيَانِ ٥٠

៥០-នៅក្នុងឋានសួគ៌ទាំងពីរនោះទៀត មានប្រភពទឹកពីរហូរ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٥١

៥១-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ
(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

فِيهِمَا مِن كُلِّ فَٰكِهَةٖ زَوۡجَانِ ٥٢

៥២-នៅក្នុងនោះទៀតដែរ មានផ្លែឈើគ្រប់ប្រភេទជាគូៗ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٥٣

៥៣-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ
(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

مُتَّكِـِٔينَ عَلَىٰ فُرُشِۭ بَطَآئِنُهَا مِنۡ إِسۡتَبۡرَقٖۚ
وَجَنَى ٱلۡجَنَّتَيۡنِ دَانٖ ٥٤

៥៤-ពួកគេអង្គុយផ្អែកខ្លួននៅលើពូកដែលក្រាលព្រំធ្វើពីសូត្រ
ក្រាស់។ ហើយផ្លែឈើនៃឋានសួគ៌ទាំងពីរនោះគឺនៅក្បែរពួកគេ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٥٥

៥៥-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ
(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

فِيهِنَّ قَٰصِرَٰتُ ٱلطَّرۡفِ لَمۡ يَطۡمِثۡهُنَّ إِنسٞ
قَبۡلَهُمۡ وَلَا جَآنّٞ ٥٦

៥៦-នៅលើពូកនោះមានស្រីទេពអប្សរជាច្រើនដែលមិនសម្លឹង
មើលអ្នកណាផ្សេងក្រៅពីស្វាមីរបស់ពួកនាងឡើយដែលគ្មានមនុស្ស
លោក និងជិនណាធ្លាប់ប៉ះពាល់ពួកនាងពីមុនពួកគេ(ស្វាមី)ឡើយ។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٥٧

៥៧-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ
(មនុស្សលោកនិងជិន)ដែលអ្នកទាំងពីរបដិសេធនោះ?

كَأَنَّهُنَّ ٱلۡيَاقُوتُ وَٱلۡمَرۡجَانُ ٥٨

៥៨-សម្រស់របស់ពួកនាង ហាក់ដូចជាត្បូងទទឹម និងផ្កាថ្ម។

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٥٩

៥៩-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ

(មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ?

هَلْ جَزَآءُ ٱلْإِحْسَـٰنِ إِلَّا ٱلْإِحْسَـٰنُ ﴿٦٠﴾

៦០-គ្មានការតបស្នងចំពោះអំពើល្អក្រៅពីអំពើល្អនោះឡើយ។

فَبِأَىِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٦١﴾

៦១-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ?

وَمِن دُونِهِمَا جَنَّتَانِ ﴿٦٢﴾

៦២-ហើយក្រៅពីឋានសួគ៌ទាំងពីរនេះ មានឋានសួគ៌ពីរផ្សេងទៀត។

فَبِأَىِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٦٣﴾

៦៣-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ ?

مُدْهَآمَّتَانِ ﴿٦٤﴾

៦៤-ឋានសួគ៌ទាំងពីរនោះមានពណ៌បៃតងចាស់។

فَبِأَىِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٦٥﴾

៦៥-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ ?

فِيهِمَا عَيْنَانِ نَضَّاخَتَانِ ﴿٦٦﴾

៦៦-នៅក្នុងឋានសួគ៌ទាំងពីរនោះ មានប្រភពទឹកពីរបាញ់ទឹកចេញ (គ្មានឈប់ឈរ)។

فَبِأَىِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٦٧﴾

៦៧-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ ?

فِيهِمَا فَـٰكِهَةٌ وَنَخْلٌ وَرُمَّانٌ ﴿٦٨﴾

៦៨-នៅក្នុងឋានសួគ៌ទាំងពីរនោះទៀត មានផ្លែឈើគ្រប់ប្រភេទ និងផ្លែល្មើ ហើយនិងផ្លែទទឹម។

فَبِأَىِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٦٩﴾

៦៩-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ ?

فِيهِنَّ خَيْرَٰتٌ حِسَانٌ ﴿٧٠﴾

៧០-នៅក្នុងឋានសួគ៌ទាំងនោះ មានស្រីទេពអប្សរគ្រប់លក្ខណ៍ស្អាតៗជាច្រើន ។

فَبِأَىِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ﴿٧١﴾

៧១-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ ?

حُورٌ مَّقْصُورَٰتٌ فِى ٱلْخِيَامِ ﴿٧٢﴾

៧២-គឺបណ្ដាស្រីទេពអប្សរដែលត្រូវបានគេថែរក្សាដោយគង់វង្សនៅក្នុងពន្លា។

៧៣-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ ?

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٧٣

៧៤-ដែលគ្មានមនុស្សលោក និងជិនណាធ្លាប់ប៉ះពាល់ពួកនាងពីមុនពួកគេ (ស្វាមី) ឡើយ ។

لَمْ يَطْمِثْهُنَّ إِنسٌ قَبْلَهُمْ وَلَا جَآنٌّ ٧٤

៧៥-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ ?

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٧٥

៧៦-ដោយពួកគេអង្គុយផ្អែកនៅលើខ្នើយដែលមានស្រោមពណ៌បៃតង ព្រមទាំងកំរាលព្រំដ៏ល្អប្រណីត ។

مُتَّكِـِٔينَ عَلَىٰ رَفْرَفٍ خُضْرٍ وَعَبْقَرِيٍّ

حِسَانٍ ٧٦

៧៧-ដូច្នេះ តើនៀកម៉ាត់ណាមួយនៃម្ចាស់របស់អ្នកទាំងពីរ (មនុស្សលោកនិងជិន) ដែលអ្នកទាំងពីរបដិសេធនោះ ?

فَبِأَيِّ ءَالَآءِ رَبِّكُمَا تُكَذِّبَانِ ٧٧

៧៨-មហាមានពរជ័យនាមនៃម្ចាស់របស់អ្នកដែលមានភាពខ្ពង់ខ្ពស់និងថ្កុំថ្កើង ។

تَبَٰرَكَ ٱسْمُ رَبِّكَ ذِى ٱلْجَلَٰلِ وَٱلْإِكْرَامِ ٧٨

## ជំពូកអាល់វ៉ាគីអះ

## سورة الواقعة

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

១-នៅពេលដែលព្រឹត្តិការណ៍ថ្ងៃបរលោកបានកើតឡើង ។

إِذَا وَقَعَتِ ٱلْوَاقِعَةُ ١

២-គ្មានអ្នកណាម្នាក់អាចបដិសេធនឹងព្រឹត្តិការណ៍របស់វាបានឡើយ ។

لَيْسَ لِوَقْعَتِهَا كَاذِبَةٌ ٢

៣-ព្រឹត្តិការណ៍នោះនឹងទម្លាក់អ្នកខ្លះ (ទៅក្នុងនរក) និងលើកកំពស់អ្នកខ្លះ (នៅក្នុងឋានសួគ៌) ។

خَافِضَةٌ رَّافِعَةٌ ٣

៤-នៅពេលដែលផែនដីត្រូវគេធ្វើឱ្យរញ្ជួយយ៉ាងខ្លាំង ។

إِذَا رُجَّتِ ٱلْأَرْضُ رَجًّا ٤

៥-ហើយបណ្ដាភ្នំត្រូវបានគេបំបែកខ្ទេចខ្ទី ។

وَبُسَّتِ ٱلْجِبَالُ بَسًّا ٥

៦-ហើយវាបានក្លាយជាធូលីដែលរសាត់តាមខ្យល់ ។

فَكَانَتْ هَبَآءً مُّنۢبَثًّا ٦

៧-ហើយពួកអ្នកនឹងក្លាយទៅជាបីក្រុម ។

وَكُنتُمْ أَزْوَٰجًا ثَلَٰثَةً ٧

៨-គឺក្រុម (ដែលទទួលបញ្ជីដោយ) ដៃស្តាំ ។ សំណាងអ្វីម្ល៉េះ

فَأَصْحَٰبُ ٱلْمَيْمَنَةِ مَآ أَصْحَٰبُ ٱلْمَيْمَنَةِ ٨

ចំពោះក្រុមដៃស្តាំនោះ!(ពួកគេនឹងចូលឋានសួគ៌)។

وَأَصۡحَٰبُ ٱلۡمَشۡـَٔمَةِ مَآ أَصۡحَٰبُ ٱلۡمَشۡـَٔمَةِ ۝٩

៩-និងក្រុម(ដែលទទួលបញ្ជីដោយ)ដៃឆ្វេង។ អភ័ព្វអ្វីម្ល៉េះ ចំពោះក្រុមដៃឆ្វេងនោះ!(ពួកគេនឹងចូលឋាននរក)។

وَٱلسَّٰبِقُونَ ٱلسَّٰبِقُونَ ۝١٠

១០-ហើយនិងក្រុមដែលនាំមុខគេ(ក្នុងការសាងអំពើល្អនៅក្នុងលោកិយ) ក្រុមនោះហើយនឹងនាំមុខគេ(ចូលឋានសួគ៌នៅថ្ងៃបរលោក)។

أُوْلَٰٓئِكَ ٱلۡمُقَرَّبُونَ ۝١١

១១-អ្នកទាំងនោះហើយជាអ្នកដែលនៅជិតនឹងអល់ឡោះបំផុត។

فِي جَنَّٰتِ ٱلنَّعِيمِ ۝١٢

១២-គឺនៅក្នុងឋានសួគ៌ណាអ៊ីម។

ثُلَّةٞ مِّنَ ٱلۡأَوَّلِينَ ۝١٣

១៣-ពួកគេភាគច្រើនជាអ្នកជំនាន់មុន។

وَقَلِيلٞ مِّنَ ٱلۡأٓخِرِينَ ۝١٤

១៤-ហើយពួកគេភាគតិចជាអ្នកជំនាន់ក្រោយ។

عَلَىٰ سُرُرٖ مَّوۡضُونَةٖ ۝١٥

១៥-(ពួកគេ)នៅលើគ្រែ ដែលធ្វើអំពីមាស និងត្បូងពេជ្រដ៏មានតម្លៃ។

مُّتَّكِـِٔينَ عَلَيۡهَا مُتَقَٰبِلِينَ ۝١٦

១៦-ដោយពួកគេអង្គុយផ្អែកបែរមុខទល់គ្នានៅលើគ្រែនោះ។

يَطُوفُ عَلَيۡهِمۡ وِلۡدَٰنٞ مُّخَلَّدُونَ ۝١٧

១៧-ហើយក្មេងៗដែលនៅវ័យក្មេងជាអមតៈដើរជុំវិញ(សម្រាប់បម្រើ)ពួកគេ។

بِأَكۡوَابٖ وَأَبَارِيقَ وَكَأۡسٖ مِّن مَّعِينٖ ۝١٨

១៨-ជាមួយនឹងពែង និងកំសៀវ ហើយនិងកែវស្រាមកពីទន្លេស្រាដែលហូរ(នៅក្នុងឋានសួគ៌)។

لَّا يُصَدَّعُونَ عَنۡهَا وَلَا يُنزِفُونَ ۝١٩

១៩-ដោយពួកគេគ្មានអាការឈឺក្បាល ហើយក៏មិនបាត់បង់ស្មារតីដោយសារស្រានោះដែរ។

وَفَٰكِهَةٖ مِّمَّا يَتَخَيَّرُونَ ۝٢٠

២០-និងផ្លែឈើជាច្រើនតាមដែលពួកគេអាចជ្រើសរើស។

وَلَحۡمِ طَيۡرٖ مِّمَّا يَشۡتَهُونَ ۝٢١

២១-និងសាច់បក្សីជាច្រើនតាមតែអ្វីដែលពួកគេចូលចិត្ត ។

وَحُورٌ عِينٞ ۝٢٢

២២-ហើយនិងស្រីទេពអប្សរដោយមានភ្នែកស្រស់ស្អាត។

كَأَمۡثَٰلِ ٱللُّؤۡلُوِٕ ٱلۡمَكۡنُونِ ۝٢٣

២៣-ប្រៀបបានដូចជាគជ់ខ្យងដែលគេថែរក្សាទុកយ៉ាងល្អ។

جَزَآءَۢ بِمَا كَانُواْ يَعۡمَلُونَ ٢٤

២៤-ទាំងនេះគឺជាការតបស្នងចំពោះអ្វីដែលពួកគេធ្លាប់បានសាង។

لَا يَسۡمَعُونَ فِيهَا لَغۡوٗا وَلَا تَأۡثِيمًا ٢٥

២៥-នៅក្នុងវា(ឋានសួគ៌) ពួកគេមិនឮពាក្យសំដីដែលឥតប្រយោជន៍ឡើយ ហើយក៏មិនឮពាក្យសំដីដែលនាំឱ្យមានបាបកម្មដែរ។

إِلَّا قِيلٗا سَلَٰمٗا سَلَٰمٗا ٢٦

២៦-មានតែពាក្យជូនពរគ្នា "សិរីសួស្តី សិរីសួស្តី" តែប៉ុណ្ណោះ។

وَأَصۡحَٰبُ ٱلۡيَمِينِ مَآ أَصۡحَٰبُ ٱلۡيَمِينِ ٢٧

២៧-ហើយក្រុម(ដែលទទួលបញ្ជីដោយ)ដៃស្តាំ។ សំណាងអ្វីម្ល៉េះចំពោះក្រុមដៃស្តាំនោះ!(ពួកគេនឹងចូលឋានសួគ៌)។

فِي سِدۡرٖ مَّخۡضُودٖ ٢٨

២៨-ពួកគេនៅរវាងដើមពុទ្រាដែលគ្មានបន្លា។

وَطَلۡحٖ مَّنضُودٖ ٢٩

២៩-និងដើមចេកដែលមានផ្លែត្រួតលើគ្នា។

وَظِلّٖ مَّمۡدُودٖ ٣٠

៣០-និងក្រោមម្លប់ដែលអមតៈ។

وَمَآءٖ مَّسۡكُوبٖ ٣١

៣១-និងទឹកដែលហូរឥតឈប់ឈរ។

وَفَٰكِهَةٖ كَثِيرَةٖ ٣٢

៣២-និងផ្លែឈើយ៉ាងច្រើន។

لَّا مَقۡطُوعَةٖ وَلَا مَمۡنُوعَةٖ ٣٣

៣៣-ដែលមិនចេះអស់ ហើយក៏គ្មានការហាមឃាត់(ពីការទទួលទានផ្លែឈើនោះ)ដែរ។

وَفُرُشٖ مَّرۡفُوعَةٍ ٣٤

៣៤-និងពូកជាច្រើនដែលខ្ពស់នៅលើគ្រែ។

إِنَّآ أَنشَأۡنَٰهُنَّ إِنشَآءٗ ٣٥

៣៥-ពិតប្រាកដណាស់ យើងបានបង្កើតពួកនាង(ស្រីក្នុងឋានសួគ៌)នូវការបង្កើតមួយ(ខុសពីការបង្កើតនៅក្នុងលោកិយ)។

فَجَعَلۡنَٰهُنَّ أَبۡكَارًا ٣٦

៣៦-ហើយយើងបានធ្វើឱ្យពួកនាងនៅក្រមុំព្រហ្មចារីរហូត។

عُرُبًا أَتۡرَابٗا ٣٧

៣៧-ដែលស្រឡាញ់តែស្វាមីរបស់ពួកនាងប៉ុណ្ណោះ និងមានអាយុស្មើៗគ្នា។

لِّأَصۡحَٰبِ ٱلۡيَمِينِ ٣٨

៣៨-(យើងបានបង្កើតពួកនាង) គឺសម្រាប់តែក្រុម(ដែលទទួលបញ្ជីដោយ)ដៃស្តាំ។

ثُلَّةٞ مِّنَ ٱلۡأَوَّلِينَ ٣٩

៣៩-ពួកគេភាគច្រើនជាអ្នកជំនាន់មុន។

وَثُلَّةٌ مِّنَ ٱلْـَٔاخِرِينَ ٤٠

៤០-ហើយពួកគេភាគច្រើនជាអ្នកជំនាន់ក្រោយ ។

وَأَصْحَـٰبُ ٱلشِّمَالِ مَآ أَصْحَـٰبُ ٱلشِّمَالِ ٤١

៤១-ហើយក្រុម(ដែលទទួលបញ្ជីដោយ)ដៃឆ្វេង។ អភ័ព្វអ្វីម្ល៉េះចំពោះក្រុមដៃឆ្វេងនោះ!(ពួកគេនឹងចូលឋាននរក) ។

فِى سَمُومٍ وَحَمِيمٍ ٤٢

៤២-គឺស្ថិតនៅក្នុងចំហាយនៃភ្លើងនរកនិងទឹកពុះដ៏សែនក្តៅ ។

وَظِلٍّ مِّن يَحْمُومٍ ٤٣

៤៣-និងម្លប់អំពីផ្សែងភ្លើងនរកដ៏ខ្មៅងងឹត ។

لَّا بَارِدٍ وَلَا كَرِيمٍ ٤٤

៤៤-ដែលមិនត្រជាក់ ហើយក៏មិនសុខស្រួលដែរ ។

إِنَّهُمْ كَانُوا۟ قَبْلَ ذَٰلِكَ مُتْرَفِينَ ٤٥

៤៥-ពិតប្រាកដណាស់ ពួកគេកាលពីមុននោះធ្លាប់ជាអ្នកដែលមានទ្រព្យសម្បត្តិស្តុកស្តម្ភ ។

وَكَانُوا۟ يُصِرُّونَ عَلَى ٱلْحِنثِ ٱلْعَظِيمِ ٤٦

៤៦-ហើយពួកគេធ្លាប់បានប្រព្រឹត្តអំពើបាបដ៏ធំធេង(អំពើស្ហ៊ីរិក)ជានិច្ច ។

وَكَانُوا۟ يَقُولُونَ أَئِذَا مِتْنَا وَكُنَّا تُرَابًا
وَعِظَـٰمًا أَءِنَّا لَمَبْعُوثُونَ ٤٧

៤៧-ហើយពួកគេធ្លាប់និយាយថាៈ តើនៅពេលដែលពួកយើងស្លាប់ ហើយពួកយើងបានក្លាយទៅជាដី និងឆ្អឹងហើយនោះ ពួកយើងពិតជាត្រូវគេធ្វើឱ្យរស់ចេញពីផ្នូរឡើងវិញមែនឬ?

أَوَءَابَآؤُنَا ٱلْأَوَّلُونَ ٤٨

៤៨-តើថែមទាំងជីដូនជីតារបស់យើងកាលពីមុនដែរឬ?

قُلْ إِنَّ ٱلْأَوَّلِينَ وَٱلْـَٔاخِرِينَ ٤٩

៤៩-ចូរអ្នក(មូហាំម៉ាត់)តបថាៈ ពិតប្រាកដណាស់ គឺទាំងអ្នកជំនាន់មុន និងអ្នកជំនាន់ក្រោយ ។

لَمَجْمُوعُونَ إِلَىٰ مِيقَـٰتِ يَوْمٍ مَّعْلُومٍ ٥٠

៥០-នឹងត្រូវគេប្រមូលផ្តុំទាំងអស់នៅពេលមួយនៃថ្ងៃដែលគេបានកំណត់យ៉ាងច្បាស់(ថ្ងៃបរលោក) ។

ثُمَّ إِنَّكُمْ أَيُّهَا ٱلضَّآلُّونَ ٱلْمُكَذِّبُونَ ٥١

៥១-ក្រោយមក ពិតប្រាកដណាស់ពួកអ្នក ឱពួកវង្វេង! ពួកដែលបដិសេធ(នឹងថ្ងៃបរលោក) ។

لَـَٔاكِلُونَ مِن شَجَرٍ مِّن زَقُّومٍ ٥٢

៥២-ពួកអ្នកនឹងស៊ីនូវដើមហ្សឺកគូម ។

فَمَالِـُٔونَ مِنْهَا ٱلْبُطُونَ ٥٣

៥៣-រហូតទាល់តែពេញពោះអំពីវា ។

فَشَـٰرِبُونَ عَلَيْهِ مِنَ ٱلْحَمِيمِ ٥٤

៥៤-រួចមកពួកអ្នកនឹងផឹកទឹកពុះដ៏សែនក្តៅ ។

فَشَـٰرِبُونَ شُرْبَ ٱلْهِيمِ ٥٥

៥៥-ហើយពួកអ្នកផឹកដូចសត្វអូដ្ឋដែលស្រេកឃ្លានបំផុត ។

هَٰذَا نُزُلُهُمۡ يَوۡمَ ٱلدِّينِ ٥٦

៥៦-នេះជាការស្វាគមន៍របស់ពួកគេនៅថ្ងៃជំនុំជំរះ ។

نَحۡنُ خَلَقۡنَٰكُمۡ فَلَوۡلَا تُصَدِّقُونَ ٥٧

៥៧-យើងជាអ្នកដែលបានបង្កើតពួកអ្នក ហេតុអ្វីបានជាពួកអ្នកមិនជឿ(ពីការរស់ឡើងវិញ)?

أَفَرَءَيۡتُم مَّا تُمۡنُونَ ٥٨

៥៨-ដូច្នេះ ចូរពួកអ្នកប្រាប់យើងអំពីទឹកកាមដែលពួកអ្នកបាញ់ចូលទៅក្នុងស្បូនស្ត្រីនោះមើល!

ءَأَنتُمۡ تَخۡلُقُونَهُۥٓ أَمۡ نَحۡنُ ٱلۡخَٰلِقُونَ ٥٩

៥៩-តើពួកអ្នកជាអ្នកបង្កើតវា(ឱ្យទៅជាមនុស្ស) ឬមួយយើងជាអ្នកបង្កើត?

نَحۡنُ قَدَّرۡنَا بَيۡنَكُمُ ٱلۡمَوۡتَ وَمَا نَحۡنُ بِمَسۡبُوقِينَ ٦٠

៦០-យើងបានកំណត់សេចក្ដីស្លាប់រវាងពួកអ្នក ហើយយើងមិនមែនជាអ្នកដែលគ្មានសមត្ថភាពនោះឡើយ ។

عَلَىٰٓ أَن نُّبَدِّلَ أَمۡثَٰلَكُمۡ وَنُنشِئَكُمۡ فِي مَا لَا تَعۡلَمُونَ ٦١

៦១-ចំពោះការជំនួស(អ្នកផ្សេង)ដូចពួកអ្នក និងបង្កើតពួកអ្នក(សាជាថ្មី)ក្នុងលក្ខណៈមួយផ្សេងទៀតដែលពួកអ្នកមិនដឹង ។

وَلَقَدۡ عَلِمۡتُمُ ٱلنَّشۡأَةَ ٱلۡأُولَىٰ فَلَوۡلَا تَذَكَّرُونَ ٦٢

៦២-ហើយជាការពិតណាស់ ពួកអ្នកបានដឹងនូវការបង្កើតដំបូង ។ ដូច្នេះ ហេតុអ្វីបានជាពួកអ្នកមិននឹកឃើញ?

أَفَرَءَيۡتُم مَّا تَحۡرُثُونَ ٦٣

៦៣-ដូច្នេះ ចូរពួកអ្នកប្រាប់យើងមកនូវអ្វី(គ្រាប់ពូជ)ដែលពួកអ្នកដាំនោះ

ءَأَنتُمۡ تَزۡرَعُونَهُۥٓ أَمۡ نَحۡنُ ٱلزَّٰرِعُونَ ٦٤

៦៤-តើពួកអ្នកជាអ្នកបណ្ដុះវា ឬមួយយើងជាអ្នកបណ្ដុះ?

لَوۡ نَشَآءُ لَجَعَلۡنَٰهُ حُطَٰمٗا فَظَلۡتُمۡ تَفَكَّهُونَ ٦٥

៦៥-ប្រសិនបើយើងមានចេតនា យើងពិតជានឹងធ្វើវាឱ្យក្លាយជាស្ងួតខ្ទេចខ្ទី ។ ពេលនោះពួកអ្នកបានក្លាយជាងឿងឆ្ងល់ ។

إِنَّا لَمُغۡرَمُونَ ٦٦

៦៦-(ដោយនិយាយថា) ពិតប្រាកដណាស់ ពួកយើងគឺនឹងត្រូវខាតបង់ ។

بَلۡ نَحۡنُ مَحۡرُومُونَ ٦٧

៦៧-ផ្ទុយទៅវិញ ពួកយើងមិនត្រូវបានគេផ្ដល់(លាភសក្ការៈ)ឡើយ ។

أَفَرَءَيۡتُمُ ٱلۡمَآءَ ٱلَّذِي تَشۡرَبُونَ ٦٨

៦៨-ដូច្នេះ ចូរពួកអ្នកប្រាប់យើងនូវទឹកដែលពួកអ្នកទទួលទាននោះមក

៦៩-តើពួកអ្នកបានបញ្ចុះវាពីពពក ឬមួយយើងជាអ្នកបញ្ចុះ?

ءَأَنتُمۡ أَنزَلۡتُمُوهُ مِنَ ٱلۡمُزۡنِ أَمۡ نَحۡنُ ٱلۡمُنزِلُونَ ٦٩

៧០-ប្រសិនបើយើងមានចេតនា យើងនឹងធ្វើវាឱ្យក្លាយទៅជាប្រៃល្វីង ។ ដូច្នេះ ហេតុអ្វីបានជាពួកអ្នកមិនដឹងគុណ?

لَوۡ نَشَآءُ جَعَلۡنَٰهُ أُجَاجٗا فَلَوۡلَا تَشۡكُرُونَ ٧٠

៧១-តើពួកអ្នកមិនឃើញភ្លើងដែលពួកអ្នកបង្កាត់នោះទេឬ?

أَفَرَءَيۡتُمُ ٱلنَّارَ ٱلَّتِي تُورُونَ ٧١

៧២-តើពួកអ្នកបានបង្កើតដើមឈើ(ដើម្បីបង្កាត់)វា ឬមួយយើងជាអ្នកបង្កើត?

ءَأَنتُمۡ أَنشَأۡتُمۡ شَجَرَتَهَآ أَمۡ نَحۡنُ ٱلۡمُنشِـُٔونَ ٧٢

៧៣-យើងបានបង្កើតវាជាការរំលឹក(ដល់ពួកអ្នកចំពោះភ្លើងនរក) និងជាប្រយោជន៍សម្រាប់បណ្ដាអ្នកដែលធ្វើដំណើរ ។

نَحۡنُ جَعَلۡنَٰهَا تَذۡكِرَةٗ وَمَتَٰعٗا لِّلۡمُقۡوِينَ ٧٣

៧៤-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)លើកតម្កើងដោយរំលឹកនាមនៃម្ចាស់របស់អ្នកមហាឧត្តុង្គឧត្ដម ។

فَسَبِّحۡ بِٱسۡمِ رَبِّكَ ٱلۡعَظِيمِ ٧٤

៧៥-ហើយយើងស្បថនឹងកន្លែងគោចរនៃហ្វូងតារាទាំងអស់ ។

۞ فَلَآ أُقۡسِمُ بِمَوَٰقِعِ ٱلنُّجُومِ ٧٥

៧៦-ហើយពិតប្រាកដណាស់ វាគឺជាការស្បថមួយដ៏ធំប្រសិនបើពួកអ្នកដឹង ។

وَإِنَّهُۥ لَقَسَمٞ لَّوۡ تَعۡلَمُونَ عَظِيمٌ ٧٦

៧៧-ពិតប្រាកដណាស់ វាគឺជាគម្ពីរគួរអានដ៏មហាថ្កុំថ្កើង ។

إِنَّهُۥ لَقُرۡءَانٞ كَرِيمٞ ٧٧

៧៨-ដែលគេរក្សាទុកនៅក្នុងគម្ពីរ(ឡាវហុលម៉ះហ្វ៊ូស) ។

فِي كِتَٰبٖ مَّكۡنُونٖ ٧٨

៧៩-គ្មានអ្នកណាម្នាក់ប៉ះពាល់វាបានឡើយ លើកលែងតែបណ្ដាអ្នកដែលជ្រះស្អាតប៉ុណ្ណោះ ។

لَّا يَمَسُّهُۥٓ إِلَّا ٱلۡمُطَهَّرُونَ ٧٩

៨០-ការបញ្ចុះ(គម្ពីរគួរអាន)នេះមកពីម្ចាស់ដែលគ្រប់គ្រងនៃពិភពទាំងអស់ ។

تَنزِيلٞ مِّن رَّبِّ ٱلۡعَٰلَمِينَ ٨٠

៨១-ដូច្នេះ តើពួកអ្នក(ពួកមូស្ហ៊ីគីន)ហ៊ានបដិសេធនឹងគម្ពីរគួរអាននេះឬ?

أَفَبِهَٰذَا ٱلۡحَدِيثِ أَنتُم مُّدۡهِنُونَ ٨١

៨២-ហើយពួកអ្នកបានយកលាភសក្ការៈរបស់ពួកអ្នក(ដែល

وَتَجۡعَلُونَ رِزۡقَكُمۡ أَنَّكُمۡ تُكَذِّبُونَ ٨٢

អល់ឡោះប្រទានឱ្យ) ធ្វើជាការប្រឆាំងឬ?

فَلَوۡلَآ إِذَا بَلَغَتِ ٱلۡحُلۡقُومَ ﴿٨٣﴾

៨៣-ហេតុអ្វីបានជាពួកអ្នកមិន( ធ្វើឱ្យជីវិតត្រឡប់មកវិញ) នៅពេលដែលវាបានចេញមកដល់បំពង់ក

وَأَنتُمۡ حِينَئِذٖ تَنظُرُونَ ﴿٨٤﴾

៨៤-ខណៈដែលពួកអ្នកកំពុងសម្លឹងមើលនោះ?

وَنَحۡنُ أَقۡرَبُ إِلَيۡهِ مِنكُمۡ وَلَٰكِن لَّا تُبۡصِرُونَ ﴿٨٥﴾

៨៥-ដោយម៉ាឡាអ៊ីកាត់របស់យើងនៅជិតគេជាងពួកអ្នកទៅទៀត ក៏ប៉ុន្តែពួកអ្នកមើលមិនឃើញឡើយ ។

فَلَوۡلَآ إِن كُنتُمۡ غَيۡرَ مَدِينِينَ ﴿٨٦﴾

៨៦-ដូច្នេះ ប្រសិនបើពួកអ្នកធ្លាប់គិតថា គ្មានការជំនុំជំរះទេនោះ ហេតុអ្វីបានជា

تَرۡجِعُونَهَآ إِن كُنتُمۡ صَٰدِقِينَ ﴿٨٧﴾

៨៧-ពួកអ្នកមិនធ្វើឱ្យវាចូលទៅក្នុងខ្លួនវិញ ប្រសិនបើពួកអ្នកជាអ្នកដែលនិយាយពិតនោះ ?

فَأَمَّآ إِن كَانَ مِنَ ٱلۡمُقَرَّبِينَ ﴿٨٨﴾

៨៨-ហើយប្រសិនបើអ្នកដែលស្លាប់នោះជិតនឹងអល់ឡោះ

فَرَوۡحٞ وَرَيۡحَانٞ وَجَنَّتُ نَعِيمٖ ﴿٨٩﴾

៨៩-ក្តីមេត្តាករុណា និងលាភសក្ការៈដ៏ល្អប្រពៃ ហើយនិងឋានសួគ៌ណាអ៊ីម( គឺសម្រាប់ពួកគេ) ។

وَأَمَّآ إِن كَانَ مِنۡ أَصۡحَٰبِ ٱلۡيَمِينِ ﴿٩٠﴾

៩០-ហើយប្រសិនបើគេ( អ្នកដែលស្លាប់) ស្ថិតក្នុងចំណោមក្រុម( ដែលទទួលបញ្ជីដោយ) ដៃស្តាំវិញ ។

فَسَلَٰمٞ لَّكَ مِنۡ أَصۡحَٰبِ ٱلۡيَمِينِ ﴿٩١﴾

៩១-( មានគេនិយាយទៅកាន់អ្នកនោះថា) សូមសុខសន្តិភាពកើតមានចំពោះអ្នក ដែលស្ថិតក្នុងចំណោមក្រុម( ដែលទទួលបញ្ជីដោយ) ដៃស្តាំ ។

وَأَمَّآ إِن كَانَ مِنَ ٱلۡمُكَذِّبِينَ ٱلضَّآلِّينَ ﴿٩٢﴾

៩២-តែប្រសិនបើគេស្ថិតក្នុងចំណោមពួកដែលបដិសេធដែលវង្វេងវិញនោះ

فَنُزُلٞ مِّنۡ حَمِيمٖ ﴿٩٣﴾

៩៣-ការស្វាគមន៍( ចំពោះគេ) គឺទឹកពុះដ៏ក្តៅបំផុត ។

وَتَصۡلِيَةُ جَحِيمٍ ﴿٩٤﴾

៩៤-ហើយត្រូវគេដុតក្នុងភ្លើងនរកជើហ៊ីម ។

إِنَّ هَٰذَا لَهُوَ حَقُّ ٱلۡيَقِينِ ﴿٩٥﴾

៩៥-ពិតប្រាកដណាស់ នេះគឺជារឿងពិតយ៉ាងជាក់ច្បាស់ ។

فَسَبِّحۡ بِٱسۡمِ رَبِّكَ ٱلۡعَظِيمِ ﴿٩٦﴾

៩៦-ដូច្នេះ ចូរអ្នក( មូហាំម៉ាត់) លើកតម្កើងដោយរំលឹកនាម

នៃម្ចាស់របស់អ្នកដ៏មហាឧត្តុង្គឧត្តម ។

## ជំពូកអាល់ហាឌីត

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-អ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងផែនដីបានលើកតម្កើងចំពោះអល់ឡោះដោយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

២-អំណាចគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដីគឺជាកម្មសិទ្ធិរបស់ទ្រង់តែមួយគត់ ដោយទ្រង់ធ្វើឱ្យរស់ និងធ្វើឱ្យស្លាប់ ។ ហើយទ្រង់មានអានុភាពលើអ្វីៗទាំងអស់ ។

៣-ទ្រង់គឺជាអ្នកដែលដំបូងគេបង្អស់ និងជាអ្នកចុងក្រោយគេបង្អស់ ហើយនិងជាអ្នកដែលខ្ពស់ជាងគេបំផុត ព្រមទាំងជាអ្នកជិតជាងគេបំផុត ។ ហើយទ្រង់មហាដឹងនូវរាល់អ្វីៗទាំងអស់ ។

៤-ទ្រង់ជាអ្នកដែលបានបង្កើតមេឃជាច្រើនជាន់ និងផែនដីក្នុងរយៈពេលប្រាំមួយថ្ងៃ បន្ទាប់មកទ្រង់នៅលើអារ៉ស្ហ ។ ទ្រង់ដឹងនូវអ្វីដែលចូលទៅក្នុងដី និងអ្វីដែលចេញពីវា ហើយនិងអ្វីដែលចុះពីលើមេឃ ព្រមទាំងអ្វីដែលឡើងទៅលើវា ។ ហើយទ្រង់នៅជាមួយ(ដឹង)ពួកអ្នក ទោះបីជាពួកអ្នកនៅទីណាក៏ដោយ ។ ហើយអល់ឡោះឃើញបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

៥-អំណាចគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី គឺជាកម្មសិទ្ធិរបស់ទ្រង់ ។ ហើយកិច្ចការទាំងអស់នឹងត្រូវវិលត្រឡប់ទៅកាន់អល់ឡោះតែមួយគត់ ។

៦-ទ្រង់ជាអ្នកបញ្ចូលពេលយប់ទៅក្នុងពេលថ្ងៃ ហើយទ្រង់ក៏ជាអ្នកបញ្ចូលពេលថ្ងៃទៅក្នុងពេលយប់វិញដែរ ។ ហើយទ្រង់ដឹងបំផុតនូវអ្វីដែលមាននៅក្នុងចិត្ត ។

៧-ចូរពួកអ្នក(មនុស្សលោក)មានជំនឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ។ ហើយចូរពួកអ្នកចំណាយនូវអ្វីដែលទ្រង់បានប្រទានឱ្យពួកអ្នកជាអ្នកគ្រប់គ្រងវា ។ ហើយបណ្តាអ្នកដែល

## سورة الحديد

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

سَبَّحَ لِلَّهِ مَا فِى ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۖ وَهُوَ ٱلْعَزِيزُ ٱلْحَكِيمُ ﴿١﴾

لَهُۥ مُلْكُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۖ يُحْىِۦ وَيُمِيتُ ۖ وَهُوَ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ﴿٢﴾

هُوَ ٱلْأَوَّلُ وَٱلْءَاخِرُ وَٱلظَّٰهِرُ وَٱلْبَاطِنُ ۖ وَهُوَ بِكُلِّ شَىْءٍ عَلِيمٌ ﴿٣﴾

هُوَ ٱلَّذِى خَلَقَ ٱلسَّمَٰوَٰتِ وَٱلْأَرْضَ فِى سِتَّةِ أَيَّامٍ ثُمَّ ٱسْتَوَىٰ عَلَى ٱلْعَرْشِ ۚ يَعْلَمُ مَا يَلِجُ فِى ٱلْأَرْضِ وَمَا يَخْرُجُ مِنْهَا وَمَا يَنزِلُ مِنَ ٱلسَّمَآءِ وَمَا يَعْرُجُ فِيهَا ۖ وَهُوَ مَعَكُمْ أَيْنَ مَا كُنتُمْ ۚ وَٱللَّهُ بِمَا تَعْمَلُونَ بَصِيرٌ ﴿٤﴾

لَّهُۥ مُلْكُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۚ وَإِلَى ٱللَّهِ تُرْجَعُ ٱلْأُمُورُ ﴿٥﴾

يُولِجُ ٱلَّيْلَ فِى ٱلنَّهَارِ وَيُولِجُ ٱلنَّهَارَ فِى ٱلَّيْلِ ۚ وَهُوَ عَلِيمٌۢ بِذَاتِ ٱلصُّدُورِ ﴿٦﴾

ءَامِنُوا۟ بِٱللَّهِ وَرَسُولِهِۦ وَأَنفِقُوا۟ مِمَّا جَعَلَكُم مُّسْتَخْلَفِينَ فِيهِ ۖ فَٱلَّذِينَ ءَامَنُوا۟ مِنكُمْ

وَأَنفَقُواْ لَهُمۡ أَجۡرٞ كَبِيرٞ ۝٧

មានជំនឿក្នុងចំណោមពួកអ្នក និងបានចំណាយនូវទ្រព្យសម្បត្តិ នោះ ពួកគេនឹងទទួលបានផលបុណ្យដ៏ធំធេង ។

وَمَا لَكُمۡ لَا تُؤۡمِنُونَ بِٱللَّهِ وَٱلرَّسُولُ يَدۡعُوكُمۡ لِتُؤۡمِنُواْ بِرَبِّكُمۡ وَقَدۡ أَخَذَ مِيثَٰقَكُمۡ إِن كُنتُم مُّؤۡمِنِينَ ۝٨

៨-តើហេតុអ្វីបានជាពួកអ្នកគ្មានជំនឿលើអល់ឡោះ ខណៈដែលអ្នកនាំសារ(មូហាំម៉ាត់) អំពាវនាវពួកអ្នក ដើម្បីឱ្យពួកអ្នកមានជំនឿលើម្ចាស់របស់ពួកអ្នក ដោយទ្រង់ពិតជាបានទទួលយកកិច្ចសន្យារបស់ពួកអ្នក ប្រសិនបើពួកអ្នកជាអ្នកមានជំនឿមែននោះ?

هُوَ ٱلَّذِي يُنَزِّلُ عَلَىٰ عَبۡدِهِۦٓ ءَايَٰتِۭ بَيِّنَٰتٖ لِّيُخۡرِجَكُم مِّنَ ٱلظُّلُمَٰتِ إِلَى ٱلنُّورِۚ وَإِنَّ ٱللَّهَ بِكُمۡ لَرَءُوفٞ رَّحِيمٞ ۝٩

៩-ទ្រង់ជាអ្នកដែលបញ្ចុះអាយ៉ាត់ៗយ៉ាងច្បាស់លាស់ទៅលើខ្ញុំរបស់ទ្រង់(មូហាំម៉ាត់) ដើម្បីទ្រង់បញ្ចេញពួកអ្នកពីភាពងងឹត(គ្មានជំនឿ)ទៅកាន់ភាពភ្លឺស្វាង(មានជំនឿ) ។ ហើយពិតប្រាកដណាស់ អល់ឡោះមហាមេត្តាករុណា មហាអាណិតស្រឡាញ់ចំពោះពួកអ្នក ។

وَمَا لَكُمۡ أَلَّا تُنفِقُواْ فِي سَبِيلِ ٱللَّهِ وَلِلَّهِ مِيرَٰثُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ لَا يَسۡتَوِي مِنكُم مَّنۡ أَنفَقَ مِن قَبۡلِ ٱلۡفَتۡحِ وَقَٰتَلَۚ أُوْلَٰٓئِكَ أَعۡظَمُ دَرَجَةٗ مِّنَ ٱلَّذِينَ أَنفَقُواْ مِنۢ بَعۡدُ وَقَٰتَلُواْۚ وَكُلّٗا وَعَدَ ٱللَّهُ ٱلۡحُسۡنَىٰۚ وَٱللَّهُ بِمَا تَعۡمَلُونَ خَبِيرٞ ۝١٠

១០-តើហេតុអ្វីបានជាពួកអ្នកមិនចំណាយនូវទ្រព្យសម្បត្តិក្នុងមាគ៌ារបស់អល់ឡោះ ខណៈដែលមរតកមេឃជាច្រើនជាន់និងផែនដីជាកម្មសិទ្ធិរបស់អល់ឡោះនោះ? មិនស្មើគ្នាទេអ្នកដែលបានចំណាយទ្រព្យសម្បត្តិ និងបានធ្វើសង្គ្រាមមុននឹងរំដោះទីក្រុងម៉ាក្កះក្នុងចំណោមពួកអ្នក ។ អ្នកទាំងនោះហើយគឺជាអ្នកដែលទទួលបានឋានៈខ្ពង់ខ្ពស់ជាងបណ្ដាអ្នកដែលបានចំណាយទ្រព្យសម្បត្តិនិងធ្វើសង្គ្រាមក្រោយពីរំដោះទីក្រុងម៉ាក្កះ ។ ហើយអល់ឡោះបានសន្យាឱ្យពួកគេទាំងពីរក្រុមនូវការតបស្នងដ៏ល្អប្រពៃ(ឋានសួគ៌) ។ហើយអល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

مَّن ذَا ٱلَّذِي يُقۡرِضُ ٱللَّهَ قَرۡضًا حَسَنٗا فَيُضَٰعِفَهُۥ لَهُۥ وَلَهُۥٓ أَجۡرٞ كَرِيمٞ ۝١١

១១-បុគ្គលណាដែលឱ្យអល់ឡោះខ្ចីនូវកម្ចីមួយដ៏ល្អប្រពៃ(បរិច្ចាគទ្រព្យសម្បត្តិក្នុងមាគ៌ាអល់ឡោះ)នោះ គឺទ្រង់នឹងបន្ថែមវាសម្រាប់គេវិញទ្វេដង ហើយគេនឹងទទួលបាននូវផលបុណ្យដ៏ថ្កុំថ្កើង(ឋានសួគ៌) ។

يَوۡمَ تَرَى ٱلۡمُؤۡمِنِينَ وَٱلۡمُؤۡمِنَٰتِ يَسۡعَىٰ نُورُهُم بَيۡنَ أَيۡدِيهِمۡ وَبِأَيۡمَٰنِهِمۖ بُشۡرَىٰكُمُ ٱلۡيَوۡمَ جَنَّٰتٞ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَاۚ

១២-នៅថ្ងៃដែលអ្នក(មូហាំម៉ាត់)ឃើញបណ្ដាអ្នកមានជំនឿប្រុស និងបណ្ដាអ្នកមានជំនឿស្រី ខណៈដែលពន្លឺពួកគេភ្លឺចែងចាំងនៅពីមុខពួកគេ និងនៅខាងស្ដាំពួកគេ(មានគេនិយាយទៅកាន់ពួកគេថា) ភាពរីករាយរបស់ពួកអ្នកនៅថ្ងៃនេះ គឺឋានសួគ៌ៗដែល

ذَٰلِكَ هُوَ ٱلۡفَوۡزُ ٱلۡعَظِيمُ ١٢

មានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកអ្នកនៅក្នុងនោះជាអមតៈ ។ នោះគឺជាជោគជ័យដ៏ធំធេង ។

يَوۡمَ يَقُولُ ٱلۡمُنَٰفِقُونَ وَٱلۡمُنَٰفِقَٰتُ
لِلَّذِينَ ءَامَنُواْ ٱنظُرُونَا نَقۡتَبِسۡ مِن نُّورِكُمۡ
قِيلَ ٱرۡجِعُواْ وَرَآءَكُمۡ فَٱلۡتَمِسُواْ نُورٗا فَضُرِبَ
بَيۡنَهُم بِسُورٖ لَّهُۥ بَابُۢ بَاطِنُهُۥ فِيهِ ٱلرَّحۡمَةُ
وَظَٰهِرُهُۥ مِن قِبَلِهِ ٱلۡعَذَابُ ١٣

១៣-នៅថ្ងៃដែលពួកពុតត្បុតប្រុស និងពួកពុតត្បុតស្រីនិយាយទៅកាន់បណ្តាអ្នកដែលមានជំនឿថាៈ សូមពួកអ្នកចាំពួកយើងផង ដើម្បីពួកយើងទទួលបានពន្លឺរបស់ពួកអ្នកខ្លះ ។ គេ( ម៉ាឡាអ៊ីកាត់) បានពោលថាៈ ចូរពួកអ្នកត្រឡប់ទៅខាងក្រោយពួកអ្នកវិញ ហើយចូរពួកអ្នកស្វែងរកពន្លឺដោយខ្លួនឯងចុះ ។ ខណៈនោះគេបានខណ្ឌរវាងពួកគេ( អ្នកមានជំនឿ និងពួកពុតត្បុត) ដោយរបងដែលមានទ្វារមួយនៅផ្នែកខាងក្នុងវាមានក្តីអាណិតស្រឡាញ់( ឋានសួគ៌) ហើយខាងក្រៅវាវិញគឺមានទារុណកម្ម( នរក) នៅក្បែរនោះ ។

يُنَادُونَهُمۡ أَلَمۡ نَكُن مَّعَكُمۡۖ قَالُواْ بَلَىٰ وَلَٰكِنَّكُمۡ
فَتَنتُمۡ أَنفُسَكُمۡ وَتَرَبَّصۡتُمۡ وَٱرۡتَبۡتُمۡ وَغَرَّتۡكُمُ
ٱلۡأَمَانِيُّ حَتَّىٰ جَآءَ أَمۡرُ ٱللَّهِ وَغَرَّكُم بِٱللَّهِ
ٱلۡغَرُورُ ١٤

១៤-ពួកគេបានស្រែកហៅអ្នកមានជំនឿថាៈ តើពួកយើងមិនធ្លាប់រស់នៅជាមួយពួកអ្នក( នៅក្នុងលោកិយ) ទេឬ? ពួកគេ( អ្នកមានជំនឿ) បានតបវិញថាៈ ពិតជាធ្លាប់មែនហើយ ប៉ុន្តែពួកអ្នកបានបំផ្លាញខ្លួនឯង( ដោយសារភាពពុតត្បុតរបស់ពួកអ្នក) ហើយពួកអ្នកបានរង់ចាំមើល( គ្រោះអាសន្នកើតឡើងចំពោះអ្នកមានជំនឿ) និងបានសង្ស័យ (ចំពោះការរស់ឡើងវិញ) ហើយការស្រមើស្រមៃឥតប្រយោជន៍បានបោកប្រាស់ពួកអ្នក រហូតទាល់តែការកំណត់របស់អល់ឡោះបានមកដល់( ស្លាប់) ។ ហើយស្ហៃតនបានបោកប្រាស់ពួកអ្នកឱ្យប្រាសចាកពីមាគ៌ារបស់អល់ឡោះ ។

فَٱلۡيَوۡمَ لَا يُؤۡخَذُ مِنكُمۡ فِدۡيَةٞ وَلَا مِنَ ٱلَّذِينَ
كَفَرُواْۚ مَأۡوَىٰكُمُ ٱلنَّارُۖ هِيَ مَوۡلَىٰكُمۡۖ وَبِئۡسَ
ٱلۡمَصِيرُ ١٥

១៥-ដូច្នេះ នៅថ្ងៃនេះការលោះខ្លួនមិនត្រូវគេទទួលយកពីពួកអ្នក( ពួកពុតត្បុត) និងពីពួកដែលគ្មានជំនឿឡើយ ។ កន្លែងរបស់ពួកអ្នកគឺឋាននរក ។ វាជាកន្លែងដ៏សក្តិសមសម្រាប់ពួកអ្នក និងជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត ។

۞ أَلَمۡ يَأۡنِ لِلَّذِينَ ءَامَنُوٓاْ أَن تَخۡشَعَ قُلُوبُهُمۡ
لِذِكۡرِ ٱللَّهِ وَمَا نَزَلَ مِنَ ٱلۡحَقِّ وَلَا يَكُونُواْ
كَٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ مِن قَبۡلُ فَطَالَ عَلَيۡهِمُ
ٱلۡأَمَدُ فَقَسَتۡ قُلُوبُهُمۡۖ وَكَثِيرٞ مِّنۡهُمۡ

១៦-តើមិនទាន់ដល់ពេលសម្រាប់បណ្តាអ្នកដែលមានជំនឿធ្វើឱ្យចិត្តរបស់ពួកគេទោរទន់តាមការរំលឹករបស់អល់ឡោះ និងតាមអ្វីដែលបានបញ្ចុះដោយការពិត( គម្ពីរគួរអាន) ទេឬ? ហើយកុំឱ្យពួកគេធ្វើដូចពួក( យ៉ាហ៊ូទី និងណាសរ៉នី) ដែលត្រូវបានគេផ្តល់គម្ពីរឱ្យកាលពីមុនឱ្យសោះ ហើយពេលវេលាបានកន្លងផុត

فَٰسِقُونَ ١٦

ពីពួកគេយ៉ាងយូរ និងចិត្តរបស់ពួកគេបានប្រែជារឹងរូស ។ ហើយពួកគេភាគច្រើនគឺជាពួកដែលល្មើសនឹងបទបញ្ជារបស់អល់ឡោះ ។

ٱعْلَمُوٓا۟ أَنَّ ٱللَّهَ يُحْىِ ٱلْأَرْضَ بَعْدَ مَوْتِهَا ۚ قَدْ بَيَّنَّا لَكُمُ ٱلْءَايَٰتِ لَعَلَّكُمْ تَعْقِلُونَ ١٧

១៧-ចូរពួកអ្នកដឹងថា ពិតប្រាកដណាស់អល់ឡោះជាអ្នកធ្វើឱ្យផែនដីរស់( មានជីជាតិ) បន្ទាប់ពីការស្លាប់( គ្មានជីជាតិ) របស់វា ។ ជាការពិតណាស់ យើងបានបញ្ជាក់ប្រាប់ពួកអ្នកយ៉ាងច្បាស់នូវភស្តុតាងជាច្រើនដើម្បីឱ្យពួកអ្នកស្វែងយល់ ។

إِنَّ ٱلْمُصَّدِّقِينَ وَٱلْمُصَّدِّقَٰتِ وَأَقْرَضُوا۟ ٱللَّهَ قَرْضًا حَسَنًا يُضَٰعَفُ لَهُمْ وَلَهُمْ أَجْرٌ كَرِيمٌ ١٨

១៨-ពិតប្រាកដណាស់ បណ្ដាអ្នកដែលបរិច្ចាគទានប្រុស និងបណ្ដាអ្នកដែលបរិច្ចាគទានស្រី ហើយនិងបណ្ដាអ្នកដែលបានឱ្យអល់ឡោះខ្ចីនូវកម្ចីមួយដ៏ល្អប្រពៃនោះ( បរិច្ចាគទ្រព្យសម្បត្តិក្នុងមាគ៌ាអល់ឡោះ) ទ្រង់នឹងបន្ថែមវាសម្រាប់ពួកគេវិញទ្វេដង ហើយពួកគេនឹងទទួលបាននូវផលបុណ្យដ៏ថ្កុំថ្កើង( ឋានសួគ៌) ។

وَٱلَّذِينَ ءَامَنُوا۟ بِٱللَّهِ وَرُسُلِهِۦٓ أُو۟لَٰٓئِكَ هُمُ ٱلصِّدِّيقُونَ ۖ وَٱلشُّهَدَآءُ عِندَ رَبِّهِمْ لَهُمْ أَجْرُهُمْ وَنُورُهُمْ ۖ وَٱلَّذِينَ كَفَرُوا۟ وَكَذَّبُوا۟ بِـَٔايَٰتِنَآ أُو۟لَٰٓئِكَ أَصْحَٰبُ ٱلْجَحِيمِ ١٩

១៩-ហើយបណ្ដាអ្នកដែលមានជំនឿលើអល់ឡោះ និងអ្នកនាំសារទាំងឡាយរបស់ទ្រង់ អ្នកទាំងនោះហើយគឺជាអ្នកដែលមានជំនឿយ៉ាងពិតប្រាកដ ។ ហើយបណ្ដាអ្នកដែលបានពលីជីវិតក្នុងមាគ៌ារបស់អល់ឡោះ ពួកគេនឹងទទួលបាននូវផលបុណ្យរបស់ពួកគេ និងពន្លឺដ៏ចែងចាំងរបស់ពួកគេពីម្ចាស់របស់ពួកគេ ។ រីឯពួកដែលគ្មានជំនឿ និងបានបដិសេធនឹងភស្តុតាងទាំងឡាយរបស់យើង ពួកទាំងនោះហើយគឺជាពួកនរកជើហ៊ីម ។

ٱعْلَمُوٓا۟ أَنَّمَا ٱلْحَيَوٰةُ ٱلدُّنْيَا لَعِبٌ وَلَهْوٌ وَزِينَةٌ وَتَفَاخُرٌۢ بَيْنَكُمْ وَتَكَاثُرٌ فِى ٱلْأَمْوَٰلِ وَٱلْأَوْلَٰدِ ۖ كَمَثَلِ غَيْثٍ أَعْجَبَ ٱلْكُفَّارَ نَبَاتُهُۥ ثُمَّ يَهِيجُ فَتَرَىٰهُ مُصْفَرًّا ثُمَّ يَكُونُ حُطَٰمًا ۖ وَفِى ٱلْءَاخِرَةِ عَذَابٌ شَدِيدٌ وَمَغْفِرَةٌ مِّنَ ٱللَّهِ وَرِضْوَٰنٌ ۚ وَمَا ٱلْحَيَوٰةُ ٱلدُّنْيَآ إِلَّا مَتَٰعُ ٱلْغُرُورِ ٢٠

២០-ចូរពួកអ្នកដឹងថា តាមពិតការរស់នៅក្នុងលោកិយនេះ គឺគ្រាន់តែជាការលេងសើច និងជាការបោកប្រាស់ និងជាការលំអ និងជាអំនួតរវាងពួកអ្នក និងគ្រាន់តែជាការប្រណាំងប្រជែងនៅក្នុងទ្រព្យសម្បត្តិនិងកូនចៅប៉ុណ្ណោះ ។ ( ទាំងនោះ) គឺប្រៀបដូចជាទឹកភ្លៀង( ដែលបានស្រោចស្រពទៅលើផែនដី) ដែលដំណាំរបស់វាធ្វើឱ្យប្រជាកសិករទាំងឡាយពេញចិត្ត បន្ទាប់មកវាបានប្រែទៅជាស្រពោន ហើយអ្នកនឹងឃើញវាទៅជាពណ៌លឿងវិញ រួចមកវាក៏ក្លាយទៅជាកំទេចសំរាម ។ ហើយនៅថ្ងៃបរលោក ទារុណកម្មដ៏ធ្ងន់ធ្ងរ( គឺសម្រាប់ពួកអ្នកដែលគ្មានជំនឿ) ។ រីឯការអភ័យទោស និងការយល់ព្រមពីអល់ឡោះវិញ( គឺសម្រាប់បណ្ដាអ្នកដែលមាន

ជំនឿ) ។ ហើយជីវិតរស់នៅក្នុងលោកិយគ្មានអ្វីក្រៅពីការត្រេកត្រអាលនៃការបោកប្រាស់នោះឡើយ ។

سَابِقُوٓاْ إِلَىٰ مَغْفِرَةٍ مِّن رَّبِّكُمْ وَجَنَّةٍ عَرْضُهَا
كَعَرْضِ ٱلسَّمَآءِ وَٱلْأَرْضِ أُعِدَّتْ لِلَّذِينَ
ءَامَنُواْ بِٱللَّهِ وَرُسُلِهِۦ ۚ ذَٰلِكَ فَضْلُ ٱللَّهِ يُؤْتِيهِ
مَن يَشَآءُ ۚ وَٱللَّهُ ذُو ٱلْفَضْلِ ٱلْعَظِيمِ ﴿٢١﴾

២១-(ឱមនុស្សលោក!) ចូរពួកអ្នកប្រណាំងប្រជែងគ្នាទៅរកការអភ័យទោសពីម្ចាស់របស់ពួកអ្នក និងទៅរកឋានសួគ៌ដែលទទឹងរបស់វាប្រៀបដូចជាទទឹងមេឃ និងផែនដីដែលគេបានរៀបចំវាសម្រាប់បណ្ដាអ្នកដែលមានជំនឿលើអល់ឡោះ និងអ្នកនាំសារទាំងឡាយរបស់ទ្រង់ ។ ទាំងនេះគឺ ជាការប្រោសប្រទានរបស់អល់ឡោះដែលទ្រង់ប្រទានវាចំពោះអ្នកណាដែលទ្រង់មានចេតនា ។ ហើយអល់ឡោះមានការប្រោសប្រទានដ៏ធំធេង ។

مَآ أَصَابَ مِن مُّصِيبَةٍ فِى ٱلْأَرْضِ وَلَا فِىٓ
أَنفُسِكُمْ إِلَّا فِى كِتَٰبٍ مِّن قَبْلِ أَن نَّبْرَأَهَآ ۚ
إِنَّ ذَٰلِكَ عَلَى ٱللَّهِ يَسِيرٌ ﴿٢٢﴾

២២-គ្មានគ្រោះថ្នាក់ណាមួយបានធ្លាក់មកលើផែនដីឡើយ ហើយក៏គ្មានគ្រោះថ្នាក់ណាមួយបានធ្លាក់ទៅលើពួកអ្នកដែរ លើកលែងតែបានកត់ត្រាទុកនៅក្នុងគម្ពីរ(ឡាវហុលម៉ះហ្វ៊ូស) មុននឹងយើងបានបង្កើតវាប៉ុណ្ណោះ ។ ពិតប្រាកដណាស់ ទាំងនោះគឺជាការងាយស្រួលបំផុតចំពោះអល់ឡោះ ។

لِّكَيْلَا تَأْسَوْاْ عَلَىٰ مَا فَاتَكُمْ وَلَا تَفْرَحُواْ
بِمَآ ءَاتَىٰكُمْ ۗ وَٱللَّهُ لَا يُحِبُّ كُلَّ مُخْتَالٍ
فَخُورٍ ﴿٢٣﴾

២៣-ដើម្បីកុំឱ្យពួកអ្នកមានការព្រួយបារម្ភចំពោះអ្វីដែលបានបាត់បង់ពីពួកអ្នក ហើយចូរពួកអ្នកកុំសប្បាយហួសប្រមាណនឹងអ្វីដែលគេបានប្រទានឱ្យពួកអ្នកឱ្យសោះ ។ ហើយអល់ឡោះមិនស្រឡាញ់ពួកដែលក្រអឺតក្រទម និងអំនួតនោះឡើយ ។

ٱلَّذِينَ يَبْخَلُونَ وَيَأْمُرُونَ ٱلنَّاسَ بِٱلْبُخْلِ ۗ
وَمَن يَتَوَلَّ فَإِنَّ ٱللَّهَ هُوَ ٱلْغَنِىُّ ٱلْحَمِيدُ ﴿٢٤﴾

២៤-គឺពួកដែលកំណាញ់ ហើយពួកគេថែមទាំងប្រើមនុស្សលោកឱ្យកំណាញ់ទៀត ។ អ្នកណាហើយបែរចេញ(ពីមាគ៌ារបស់អល់ឡោះ) ពិតប្រាកដណាស់អល់ឡោះ ទ្រង់មហាមានលើសលប់ជាទីកោតសរសើរ ។

لَقَدْ أَرْسَلْنَا رُسُلَنَا بِٱلْبَيِّنَٰتِ وَأَنزَلْنَا
مَعَهُمُ ٱلْكِتَٰبَ وَٱلْمِيزَانَ لِيَقُومَ ٱلنَّاسُ
بِٱلْقِسْطِ ۖ وَأَنزَلْنَا ٱلْحَدِيدَ فِيهِ بَأْسٌ شَدِيدٌ
وَمَنَٰفِعُ لِلنَّاسِ وَلِيَعْلَمَ ٱللَّهُ مَن يَنصُرُهُۥ
وَرُسُلَهُۥ بِٱلْغَيْبِ ۚ إِنَّ ٱللَّهَ قَوِىٌّ عَزِيزٌ ﴿٢٥﴾

២៥-ជាការពិតណាស់ យើងបានបញ្ជូនបណ្ដាអ្នកនាំសាររបស់យើងជាមួយនឹងភស្ដុតាងៗយ៉ាងច្បាស់លាស់ ហើយយើងបានបញ្ចុះជាមួយពួកគេនូវគម្ពីរ និងជញ្ជីងយុត្តិធម៌ ដើម្បីឱ្យមនុស្សលោកទំនាក់ទំនងគ្នាដោយយុត្តិធម៌ ។ ហើយយើងបានបង្កើតឱ្យមានដែកដែលរឹងបំផុត និងជាប្រយោជន៍យ៉ាងច្រើនដល់មនុស្សលោក ។ ហើយដើម្បីអល់ឡោះដឹងថា អ្នកណាម្នាក់ដែលជួយទ្រង់និងបណ្ដា

អ្នកនាំសាររបស់ទ្រង់ដោយអាថ៌កំបាំង។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងក្លា មហាខ្លាំងពូកែ។

وَلَقَدۡ أَرۡسَلۡنَا نُوحٗا وَإِبۡرَٰهِيمَ وَجَعَلۡنَا فِي
ذُرِّيَّتِهِمَا ٱلنُّبُوَّةَ وَٱلۡكِتَٰبَۖ فَمِنۡهُم مُّهۡتَدٖۖ
وَكَثِيرٞ مِّنۡهُمۡ فَٰسِقُونَ ٢٦

២៦-ហើយជាការពិតណាស់ យើងបានបញ្ជូននួហ និងអ៊ីព្រហ៊ីម ជាអ្នកនាំសារ(ទៅកាន់ក្រុមរបស់គេទាំងពីរ) ហើយយើងបានប្រទានតំណែងជាណាពី និងប្រទានគម្ពីរឱ្យកូនចៅរបស់គេទាំងពីរ។ ហើយក្នុងចំណោមពួកគេមានអ្នកខ្លះទទួលបានការចង្អុលបង្ហាញ តែពួកគេភាគច្រើនជាអ្នកល្មើសនឹងបទបញ្ជារបស់អល់ឡោះ។

ثُمَّ قَفَّيۡنَا عَلَىٰٓ ءَاثَٰرِهِم بِرُسُلِنَا وَقَفَّيۡنَا
بِعِيسَى ٱبۡنِ مَرۡيَمَ وَءَاتَيۡنَٰهُ ٱلۡإِنجِيلَ
وَجَعَلۡنَا فِي قُلُوبِ ٱلَّذِينَ ٱتَّبَعُوهُ رَأۡفَةٗ
وَرَحۡمَةٗۚ وَرَهۡبَانِيَّةً ٱبۡتَدَعُوهَا مَا كَتَبۡنَٰهَا
عَلَيۡهِمۡ إِلَّا ٱبۡتِغَآءَ رِضۡوَٰنِ ٱللَّهِ فَمَا رَعَوۡهَا
حَقَّ رِعَايَتِهَاۖ فَـَٔاتَيۡنَا ٱلَّذِينَ ءَامَنُواْ مِنۡهُمۡ
أَجۡرَهُمۡۖ وَكَثِيرٞ مِّنۡهُمۡ فَٰسِقُونَ ٢٧

២៧-ក្រោយមកយើងបានតែងតាំងអ្នកនាំសារជាច្រើនបន្ទាប់ពីពួកគេ និងបានតែងតាំងអ៊ីសាកូនប្រុសរបស់ម៉ារយ៉ាំ ហើយយើងបានប្រទានឱ្យគេនូវគម្ពីរអ៊ិញជីល ហើយយើងបានដាក់ក្តីអាណិតស្រឡាញ់ និងក្តីមេត្តាករុណាទៅក្នុងចិត្តរបស់បណ្តាអ្នកដែលតាមគេ(អ៊ីសា)។ ហើយពួកបុព្វជិត(របស់ពួកណាសរ៉នី)បានបង្កើតវា(ការគោរពសក្ការៈ)ដោយខ្លួនឯងដែលយើងមិនបានដាក់កាតព្វកិច្ចវាទៅលើពួកគេក្រៅពីចង់ឱ្យពួកគេស្វែងរកការយល់ព្រមរបស់អល់ឡោះឡើយ តែពួកគេមិនបានថែរក្សាវានូវការថែរក្សាមួយឱ្យបានត្រឹមត្រូវឡើយ។ ដូច្នេះយើងក៏បានប្រទានឱ្យបណ្តាអ្នកដែលមានជំនឿក្នុងចំណោមពួកអ្នកនូវផលបុណ្យរបស់ពួកគេ តែពួកគេភាគច្រើនល្មើសនឹងបទបញ្ជារបស់អល់ឡោះ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ وَءَامِنُواْ
بِرَسُولِهِۦ يُؤۡتِكُمۡ كِفۡلَيۡنِ مِن رَّحۡمَتِهِۦ وَيَجۡعَل
لَّكُمۡ نُورٗا تَمۡشُونَ بِهِۦ وَيَغۡفِرۡ لَكُمۡۚ وَٱللَّهُ
غَفُورٞ رَّحِيمٞ ٢٨

២៨-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកោតខ្លាចអល់ឡោះ ហើយចូរពួកអ្នកមានជំនឿលើអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់) ទ្រង់នឹងប្រទានឱ្យពួកអ្នកទ្វេដងនូវក្តីមេត្តាករុណារបស់ទ្រង់។ ហើយទ្រង់នឹងប្រទានឱ្យពួកអ្នកនូវពន្លឺមួយ(ការចង្អុលបង្ហាញ) ដែលពួកអ្នកនឹងទទួលបានការចង្អុលបង្ហាញតាមរយៈវា ហើយទ្រង់នឹងអភ័យទោសដល់ពួកអ្នក។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

لِّئَلَّا يَعۡلَمَ أَهۡلُ ٱلۡكِتَٰبِ أَلَّا يَقۡدِرُونَ عَلَىٰ
شَيۡءٖ مِّن فَضۡلِ ٱللَّهِ وَأَنَّ ٱلۡفَضۡلَ بِيَدِ ٱللَّهِ
يُؤۡتِيهِ مَن يَشَآءُۚ وَٱللَّهُ ذُو ٱلۡفَضۡلِ ٱلۡعَظِيمِ ٢٩

២៩-(ធ្វើដូច្នេះ)គឺដើម្បីឱ្យពួកអះលីគីតាបដឹងថាៈ ពិតប្រាកដណាស់ ពួកគេគ្មានសមត្ថភាពលើអ្វីមួយអំពីការប្រោសប្រទានរបស់អល់ឡោះឡើយ។ ហើយពិតប្រាកដណាស់ ការប្រោសប្រទាននោះ

គឺនៅក្នុងកណ្ដាប់ដៃរបស់អល់ឡោះដែលទ្រង់នឹងប្រទានវាឱ្យអ្នកណាដែលទ្រង់មានចេតនា។ ហើយអល់ឡោះមានការប្រោសប្រទានដ៏ធំធេង។

## ជំពូកអាល់មូជើឌើឡះ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-ជាការពិតណាស់ អល់ឡោះបានឮនូវពាក្យសំដីដែលនាងជជែកដេញដោលជាមួយអ្នក(មូហាំម៉ាត់)ក្នុងរឿងស្វាមីរបស់នាង និងបានត្អូញត្អែរទៅចំពោះអល់ឡោះ។ ហើយអល់ឡោះ ឮនូវការជជែកគ្នារវាងអ្នកទាំងពីរ។ ពិតប្រាកដណាស់ អល់ឡោះមហាឮ មហាឃើញ។

២-ពួកដែលនិយាយពាក្យហ្ស៊ីហ៊ើរ[1] ចំពោះភរិយារបស់ពួកគេក្នុងចំណោមពួកអ្នកនោះ គឺពួកនាងមិនមែនជាម្ដាយរបស់ពួកគេទេ។ ម្ដាយរបស់ពួកគេគឺជាអ្នកដែលបានបង្កើតពួកគេ។ ហើយពិតប្រាកដណាស់ ពួកគេនិយាយនូវពាក្យសំដីដ៏អាក្រក់ និងភូតកុហក។ ហើយពិតប្រាកដណាស់ អល់ឡោះមហាអធ្យាស្រ័យ មហាអភ័យទោស។

៣-ហើយពួកដែលនិយាយពាក្យហ្ស៊ីហ៊ើរចំពោះភរិយារបស់ពួកគេនោះ បន្ទាប់មកពួកគេចង់វិលត្រឡប់(ដោយស្របច្បាប់)វិញនូវអ្វីដែលពួកគេបាននិយាយ គឺពួកគេ(ស្វាមី)ត្រូវពិន័យដោយដោះលែងខ្ញុំបម្រើម្នាក់មុនពេលពួកគេទាំងពីរប៉ះពាល់គ្នា(រួមរ័ក)វិញ។ នោះគឺជាច្បាប់ដែលគេទូន្មានពួកអ្នកនឹងវា។ ហើយអល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

៤-រីឯអ្នកណាដែលគ្មានខ្ញុំបម្រើសម្រាប់ដោះលែងទេនោះ គឺត្រូវឱ្យគេបួសចំនួនពីរខែជាប់ៗគ្នា មុននឹងប៉ះពាល់(រួមរ័ក)គ្នាវិញ។ ហើយបើអ្នកណាគ្មានលទ្ធភាពបួសទេនោះ គឺត្រូវឱ្យគេផ្ដល់ចំណីអាហារដល់អ្នកក្រីក្រចំនួនហុកសិបនាក់។ ធ្វើដូច្នោះ ដើម្បីឱ្យពួក

سورة المجادلة

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

قَدۡ سَمِعَ ٱللَّهُ قَوۡلَ ٱلَّتِي تُجَٰدِلُكَ فِي زَوۡجِهَا وَتَشۡتَكِيٓ إِلَى ٱللَّهِ وَٱللَّهُ يَسۡمَعُ تَحَاوُرَكُمَآۚ إِنَّ ٱللَّهَ سَمِيعُۢ بَصِيرٌ ١

ٱلَّذِينَ يُظَٰهِرُونَ مِنكُم مِّن نِّسَآئِهِم مَّا هُنَّ أُمَّهَٰتِهِمۡۖ إِنۡ أُمَّهَٰتُهُمۡ إِلَّا ٱلَّٰٓـِٔي وَلَدۡنَهُمۡۚ وَإِنَّهُمۡ لَيَقُولُونَ مُنكَرٗا مِّنَ ٱلۡقَوۡلِ وَزُورٗاۚ وَإِنَّ ٱللَّهَ لَعَفُوٌّ غَفُورٞ ٢

وَٱلَّذِينَ يُظَٰهِرُونَ مِن نِّسَآئِهِمۡ ثُمَّ يَعُودُونَ لِمَا قَالُواْ فَتَحۡرِيرُ رَقَبَةٖ مِّن قَبۡلِ أَن يَتَمَآسَّاۚ ذَٰلِكُمۡ تُوعَظُونَ بِهِۦۚ وَٱللَّهُ بِمَا تَعۡمَلُونَ خَبِيرٞ ٣

فَمَن لَّمۡ يَجِدۡ فَصِيَامُ شَهۡرَيۡنِ مُتَتَابِعَيۡنِ مِن قَبۡلِ أَن يَتَمَآسَّاۖ فَمَن لَّمۡ يَسۡتَطِعۡ فَإِطۡعَامُ سِتِّينَ مِسۡكِينٗاۚ ذَٰلِكَ لِتُؤۡمِنُواْ بِٱللَّهِ

---

១-ហ្ស៊ីហ៊ើរ : គឺជាការប្រដូចភរិយាទៅនឹងម្ដាយក្នុងន័យមិនអាចរួមរស់ជាប្ដីប្រពន្ធបាន។

وَرَسُولِهِۦۚ وَتِلۡكَ حُدُودُ ٱللَّهِۗ وَلِلۡكَٰفِرِينَ عَذَابٌ أَلِيمٌ ٤

អ្នកជឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ។ នោះហើយគឺជាការកំណត់របស់អល់ឡោះ ។ ហើយសម្រាប់ពួកដែលគ្មានជំនឿគឺទារុណកម្មដ៏ឈឺចាប់ ។

إِنَّ ٱلَّذِينَ يُحَآدُّونَ ٱللَّهَ وَرَسُولَهُۥ كُبِتُواْ كَمَا كُبِتَ ٱلَّذِينَ مِن قَبۡلِهِمۡۚ وَقَدۡ أَنزَلۡنَآ ءَايَٰتِۭ بَيِّنَٰتٖۚ وَلِلۡكَٰفِرِينَ عَذَابٞ مُّهِينٞ ٥

៥-ពិតប្រាកដណាស់ ពួកដែលប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់នឹងត្រូវបានគេធ្វើឱ្យពួកគេអាម៉ាស់ ដូចពួកជំនាន់មុនពួកគេដែលត្រូវបានគេធ្វើឱ្យអាម៉ាស់ដែរ ។ ហើយជាការពិតណាស់ យើងបានបញ្ចុះនូវភស្តុតាងៗយ៉ាងច្បាស់លាស់ ។ ហើយសម្រាប់ពួកដែលគ្មានជំនឿគឺទារុណកម្មយ៉ាងអាម៉ាស់ ។

يَوۡمَ يَبۡعَثُهُمُ ٱللَّهُ جَمِيعٗا فَيُنَبِّئُهُم بِمَا عَمِلُوٓاْۚ أَحۡصَىٰهُ ٱللَّهُ وَنَسُوهُۚ وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ شَهِيدٌ ٦

៦-(ចូរចងចាំ) នៅថ្ងៃដែលអល់ឡោះធ្វើឱ្យពួកគេរស់ឡើងវិញទាំងអស់គ្នា ហើយទ្រង់នឹងប្រាប់ពួកគេនូវអ្វីដែលពួកគេបានប្រព្រឹត្ត ។ អល់ឡោះបានរក្សាវា(ទង្វើរបស់ពួកគេ) ទុក ខណៈដែលពួកគេបានភ្លេចវាទៅហើយនោះ ។ ហើយអល់ឡោះគឺជាសាក្សីលើអ្វីៗទាំងអស់ ។

أَلَمۡ تَرَ أَنَّ ٱللَّهَ يَعۡلَمُ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۖ مَا يَكُونُ مِن نَّجۡوَىٰ ثَلَٰثَةٍ إِلَّا هُوَ رَابِعُهُمۡ وَلَا خَمۡسَةٍ إِلَّا هُوَ سَادِسُهُمۡ وَلَآ أَدۡنَىٰ مِن ذَٰلِكَ وَلَآ أَكۡثَرَ إِلَّا هُوَ مَعَهُمۡ أَيۡنَ مَا كَانُواْۖ ثُمَّ يُنَبِّئُهُم بِمَا عَمِلُواْ يَوۡمَ ٱلۡقِيَٰمَةِۚ إِنَّ ٱللَّهَ بِكُلِّ شَيۡءٍ عَلِيمٌ ٧

៧-តើអ្នក(មូហាំម៉ាត់) មិនបានដឹងទេឬ ពិតប្រាកដណាស់ អល់ឡោះដឹងនូវអ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលមាននៅលើផែនដីនោះ? គ្មានការពិភាក្សាគ្នាដោយស្ងាត់ៗតែបីនាក់ក្រៅពីទ្រង់ជាអ្នកទីបួននោះឡើយ ។ ហើយទោះជាប្រាំនាក់ក៏មានទ្រង់ជាអ្នកទីប្រាំមួយដែរ ។ ហើយទោះបីជាចំនួនតិចជាងនេះ ឬច្រើនជាងនេះក្តី ក៏ទ្រង់នៅជាមួយ(ដឹង)ពួកគេដែរ ទោះបីជាពួកគេនៅទីណាក៏ដោយ ។ បន្ទាប់មកនៅថ្ងៃបរលោក ទ្រង់នឹងប្រាប់ពួកគេឱ្យដឹងនូវអ្វីដែលពួកគេបានប្រព្រឹត្ត ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹងនូវអ្វីៗទាំងអស់ ។

أَلَمۡ تَرَ إِلَى ٱلَّذِينَ نُهُواْ عَنِ ٱلنَّجۡوَىٰ ثُمَّ يَعُودُونَ لِمَا نُهُواْ عَنۡهُ وَيَتَنَٰجَوۡنَ بِٱلۡإِثۡمِ وَٱلۡعُدۡوَٰنِ وَمَعۡصِيَتِ ٱلرَّسُولِ وَإِذَا جَآءُوكَ حَيَّوۡكَ بِمَا لَمۡ يُحَيِّكَ بِهِ ٱللَّهُ وَيَقُولُونَ فِيٓ أَنفُسِهِمۡ لَوۡلَا يُعَذِّبُنَا ٱللَّهُ بِمَا نَقُولُۚ

៨-តើអ្នក(មូហាំម៉ាត់) មិនបានឃើញពួក(យ៉ាហ៊ូទី) ដែលត្រូវបានគេហាមឃាត់អំពីការពិភាក្សាគ្នាដោយស្ងាត់ៗ បន្ទាប់មកពួកគេត្រឡប់ទៅប្រព្រឹត្តនូវអ្វីដែលពួកគេត្រូវបានគេហាមឃាត់វាទៀត ថែមទាំងពួកគេពិភាក្សាគ្នាដោយស្ងាត់ៗនូវអ្វីដែលជាអំពើបាប និងជាប្រការដែលនាំឱ្យក្លាយជាសត្រូវនឹងគ្នា ហើយនិងជាការប្រឆាំងនឹងអ្នកនាំសារ(មូហាំម៉ាត់)ទេឬ? ហើយនៅពេលដែលពួកគេបាន

حَسۡبُهُمۡ جَهَنَّمُ يَصۡلَوۡنَهَاۖ فَبِئۡسَ ٱلۡمَصِيرُ ﴿٨﴾

មកជួបអ្នក ពួកគេបានស្វាគមន៍(ឱ្យសាឡាម) អ្នកនូវអ្វីដែលអល់ឡោះមិនបានស្វាគមន៍អ្នកនឹងវាឡើយ ។ ហើយពួកគេនិយាយខ្លួនឯងថាៈ ហេតុអ្វីបានជាអល់ឡោះមិនដាក់ទណ្ឌកម្មពួកយើងនូវអ្វីដែលពួកយើងនិយាយ(ចំពោះមូហាំម៉ាត់)នោះ? គ្រប់គ្រាន់សម្រាប់ពួកគេគឺនរកជើហាន់ណាំដែលពួកគេត្រូវដុតនៅក្នុងវា ហើយជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا تَنَٰجَيۡتُمۡ فَلَا تَتَنَٰجَوۡاْ بِٱلۡإِثۡمِ وَٱلۡعُدۡوَٰنِ وَمَعۡصِيَتِ ٱلرَّسُولِ وَتَنَٰجَوۡاْ بِٱلۡبِرِّ وَٱلتَّقۡوَىٰۖ وَٱتَّقُواْ ٱللَّهَ ٱلَّذِيٓ إِلَيۡهِ تُحۡشَرُونَ ﴿٩﴾

៩-ឱបណ្ដាអ្នកដែលមានជំនឿ! ប្រសិនបើពួកអ្នកពិភាក្សាគ្នាដោយស្ងាត់ៗ ចូរពួកអ្នកកុំពិភាក្សាគ្នានូវអ្វីដែលជាអំពើបាប និងជាប្រការដែលនាំឱ្យក្លាយជាសត្រូវនឹងគ្នា ហើយនិងជាការប្រឆាំងចំពោះអ្នកនាំសារ(មូហាំម៉ាត់)ឱ្យសោះ ។ ហើយចូរពួកអ្នកពិភាក្សាគ្នាដោយស្ងាត់ៗចុះនូវប្រការណាដែលល្អ និងជាប្រការដែលនាំឱ្យកោតខ្លាចអល់ឡោះ ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះដែលជាអ្នកប្រមូលផ្ដុំពួកអ្នកទៅកាន់ទ្រង់វិញ(នៅថ្ងៃបរលោក) ។

إِنَّمَا ٱلنَّجۡوَىٰ مِنَ ٱلشَّيۡطَٰنِ لِيَحۡزُنَ ٱلَّذِينَ ءَامَنُواْ وَلَيۡسَ بِضَآرِّهِمۡ شَيۡـًٔا إِلَّا بِإِذۡنِ ٱللَّهِۚ وَعَلَى ٱللَّهِ فَلۡيَتَوَكَّلِ ٱلۡمُؤۡمِنُونَ ﴿١٠﴾

១០-ពិតប្រាកដណាស់ ការពិភាក្សាគ្នាដោយស្ងាត់ៗនោះគឺមកពីស្ហៃតន ដើម្បីធ្វើឱ្យបណ្ដាអ្នកមានជំនឿមានទុក្ខព្រួយ ខណៈដែលវាមិនបានធ្វើឱ្យពួកគេមានគ្រោះថ្នាក់ឡើយ លុះត្រាតែមានការអនុញ្ញាតពីអល់ឡោះ ។ ហើយចំពោះអល់ឡោះតែមួយគត់ដែលបណ្ដាអ្នកមានជំនឿប្រគល់ការទុកចិត្ត ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا قِيلَ لَكُمۡ تَفَسَّحُواْ فِي ٱلۡمَجَٰلِسِ فَٱفۡسَحُواْ يَفۡسَحِ ٱللَّهُ لَكُمۡۖ وَإِذَا قِيلَ ٱنشُزُواْ فَٱنشُزُواْ يَرۡفَعِ ٱللَّهُ ٱلَّذِينَ ءَامَنُواْ مِنكُمۡ وَٱلَّذِينَ أُوتُواْ ٱلۡعِلۡمَ دَرَجَٰتٖۚ وَٱللَّهُ بِمَا تَعۡمَلُونَ خَبِيرٞ ﴿١١﴾

១១-ឱបណ្ដាអ្នកដែលមានជំនឿ! នៅពេលដែលមានគេនិយាយទៅកាន់ពួកអ្នកថាៈ សូមពួកអ្នកសម្រួលកន្លែងអង្គុយឱ្យទូលាយនោះ ចូរពួកអ្នកសម្រួលឱ្យទូលាយចុះ អល់ឡោះនឹងធ្វើឱ្យពួកអ្នកទូលាយវិញ(ទាំងនៅក្នុងលោកិយនិងថ្ងៃបរលោក) ។ ហើយនៅពេលដែលមានគេនិយាយថាៈ សូមពួកអ្នកងើបចេញពីកន្លែងអង្គុយ(ដើម្បីធ្វើប្រការល្អអ្វីមួយ) ចូរពួកអ្នកងើបចេញចុះ អល់ឡោះនឹងលើកឋានៈបណ្ដាអ្នកដែលមានជំនឿនៅក្នុងចំណោមពួកអ្នក និងបណ្ដាអ្នកដែលត្រូវបានគេផ្ដល់ចំណេះវិជ្ជាឱ្យ ។ ហើយអល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا نَٰجَيۡتُمُ ٱلرَّسُولَ

១២-ឱបណ្ដាអ្នកដែលមានជំនឿ! នៅពេលដែលពួកអ្នកចង់

فَقَدِّمُواْ بَيْنَ يَدَىْ نَجْوَىٰكُمْ صَدَقَةً ذَٰلِكَ
خَيْرٌ لَّكُمْ وَأَطْهَرُ فَإِن لَّمْ تَجِدُواْ فَإِنَّ ٱللَّهَ
غَفُورٌ رَّحِيمٌ ﴿١٢﴾

ពិភាក្សារឿងសម្ងាត់ជាមួយអ្នកនាំសារ(មូហាំម៉ាត់) ចូរពួកអ្នកបរិច្ចាគទានជាមុនសិន មុននឹងពួកអ្នកពិភាក្សារឿងសម្ងាត់នោះ។ ការធ្វើដូច្នេះ គឺជាការប្រសើរ និងស្អាតស្អំបំផុតសម្រាប់ពួកអ្នក។ ហើយប្រសិនបើពួកអ្នកគ្មានលទ្ធភាពទេនោះ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

ءَأَشْفَقْتُمْ أَن تُقَدِّمُواْ بَيْنَ يَدَىْ نَجْوَىٰكُمْ
صَدَقَٰتٍ فَإِذْ لَمْ تَفْعَلُواْ وَتَابَ ٱللَّهُ عَلَيْكُمْ
فَأَقِيمُواْ ٱلصَّلَوٰةَ وَءَاتُواْ ٱلزَّكَوٰةَ وَأَطِيعُواْ ٱللَّهَ
وَرَسُولَهُۥ وَٱللَّهُ خَبِيرٌۢ بِمَا تَعْمَلُونَ ﴿١٣﴾

១៣-តើពួកអ្នកខ្លាចក្រឬ នៅពេលដែលពួកអ្នកបរិច្ចាគមុននឹងពួកអ្នកពិភាក្សារឿងសម្ងាត់ជាមួយអ្នកនាំសារនោះ? ហើយប្រសិនបើពួកអ្នកធ្វើមិនបានទេ ហើយអល់ឡោះលើកលែងទោសឱ្យពួកអ្នកនោះ ចូរពួកអ្នកប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ ហើយនិងប្រតិបត្តិតាមអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់។ ហើយអល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

۞ أَلَمْ تَرَ إِلَى ٱلَّذِينَ تَوَلَّوْاْ قَوْمًا غَضِبَ ٱللَّهُ
عَلَيْهِم مَّا هُم مِّنكُمْ وَلَا مِنْهُمْ وَيَحْلِفُونَ عَلَى
ٱلْكَذِبِ وَهُمْ يَعْلَمُونَ ﴿١٤﴾

១៤-តើអ្នក(មូហាំម៉ាត់)មិនបានឃើញពួក(ពួកពុតត្បុត)ដែលបានយកក្រុមដែលអល់ឡោះបានខឹងសម្បាចំពោះពួកគេ(យ៉ាហ៊ូទី) ធ្វើជាមិត្តភក្តិទេឬ? ពួកគេមិនមែនជាក្រុមរបស់ពួកអ្នក(មូស្លីម) ហើយពួកគេក៏មិនមែនជាក្រុមរបស់ពួកគេ(យ៉ាហ៊ូទី)ដែរ។ ហើយពួកគេស្បថដោយភូតកុហក ខណៈដែលពួកគេដឹងយ៉ាងច្បាស់។

أَعَدَّ ٱللَّهُ لَهُمْ عَذَابًا شَدِيدًا إِنَّهُمْ سَآءَ مَا
كَانُواْ يَعْمَلُونَ ﴿١٥﴾

១៥-អល់ឡោះបានរៀបចំឱ្យពួកគេ(ពួកពុតត្បុត)នូវទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។ ពិតប្រាកដណាស់ អ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តគឺអាក្រក់បំផុត។

ٱتَّخَذُوٓاْ أَيْمَٰنَهُمْ جُنَّةً فَصَدُّواْ عَن سَبِيلِ ٱللَّهِ
فَلَهُمْ عَذَابٌ مُّهِينٌ ﴿١٦﴾

១៦-ពួកគេបានយកការស្បថកុហករបស់ពួកគេធ្វើជាខែល (ដើម្បីការពារទ្រព្យសម្បត្តិ និងកូនចៅរបស់ពួកគេ)។ ហើយពួកគេរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ។ ដូច្នេះ ពួកគេនឹងទទួលទារុណកម្មដ៏សែនអាម៉ាស់។

لَّن تُغْنِىَ عَنْهُمْ أَمْوَٰلُهُمْ وَلَآ أَوْلَٰدُهُم مِّنَ ٱللَّهِ
شَيْـًٔا أُوْلَٰٓئِكَ أَصْحَٰبُ ٱلنَّارِ هُمْ فِيهَا
خَٰلِدُونَ ﴿١٧﴾

១៧-ទ្រព្យសម្បត្តិនិងកូនចៅរបស់ពួកគេនឹងមិនអាចការពារពួកគេពី(ទារុណកម្ម)អល់ឡោះបានជាដាច់ខាត។ ពួកទាំងនោះគឺជាពួកឋាននរក ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។

يَوْمَ يَبْعَثُهُمُ ٱللَّهُ جَمِيعًا فَيَحْلِفُونَ لَهُۥ كَمَا

១៨-នៅថ្ងៃដែលអល់ឡោះនឹងធ្វើឱ្យពួកគេទាំងអស់គ្នារស់

يَحْلِفُونَ لَكُمْ ۖ وَيَحْسَبُونَ أَنَّهُمْ عَلَىٰ شَيْءٍ ۚ أَلَا إِنَّهُمْ هُمُ الْكَاذِبُونَ ﴿١٨﴾

ឡើងវិញ ពួកគេ(ពួកពុតត្បុត)នឹងស្បថចំពោះទ្រង់ដូចពួកគេស្បថចំពោះពួកអ្នក(មានជំនឿ)ដែរ។ ហើយពួកគេនឹកស្មានថាពិតប្រាកដណាស់ ពួកគេនឹងទទួលបានផលប្រយោជន៍ខ្លះ។ ចូរដឹងថាៈ ពិតប្រាកដណាស់ ពួកគេគឺជាពួកភូតកុហក។

اسْتَحْوَذَ عَلَيْهِمُ الشَّيْطَانُ فَأَنسَاهُمْ ذِكْرَ اللَّهِ ۚ أُولَٰئِكَ حِزْبُ الشَّيْطَانِ ۚ أَلَا إِنَّ حِزْبَ الشَّيْطَانِ هُمُ الْخَاسِرُونَ ﴿١٩﴾

១៩-ស្ហៃតនបានគ្រប់ដណ្តប់ទៅលើពួកគេ និងធ្វើឱ្យពួកគេភ្លេចភ្លាំងអំពីការរំលឹកអល់ឡោះ។ ពួកទាំងនោះជាក្រុមរបស់ស្ហៃតន។ ចូរដឹងថាៈ ពិតប្រាកដណាស់ ក្រុមរបស់ស្ហៃតនគឺជាពួកដែលខាតបង់។

إِنَّ الَّذِينَ يُحَادُّونَ اللَّهَ وَرَسُولَهُ أُولَٰئِكَ فِي الْأَذَلِّينَ ﴿٢٠﴾

២០-ពិតប្រាកដណាស់ ពួកដែលប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់)នោះ ពួកទាំងនោះស្ថិតក្នុងចំណោមពួកដែលថោកទាបជាទីបំផុត។

كَتَبَ اللَّهُ لَأَغْلِبَنَّ أَنَا وَرُسُلِي ۚ إِنَّ اللَّهَ قَوِيٌّ عَزِيزٌ ﴿٢١﴾

២១-អល់ឡោះបានកត់ត្រារួចហើយ(នៅក្នុងឡាវហុលម៉ះហ្វ៊ូស)ថាៈ យើងនិងអ្នកនាំសាររបស់យើងពិតជាឈ្នះ។ ពិតប្រាកដណាស់ អល់ឡោះមហាខ្លាំងក្លា មហាខ្លាំងពូកែ។

لَا تَجِدُ قَوْمًا يُؤْمِنُونَ بِاللَّهِ وَالْيَوْمِ الْآخِرِ يُوَادُّونَ مَنْ حَادَّ اللَّهَ وَرَسُولَهُ وَلَوْ كَانُوا آبَاءَهُمْ أَوْ أَبْنَاءَهُمْ أَوْ إِخْوَانَهُمْ أَوْ عَشِيرَتَهُمْ ۚ أُولَٰئِكَ كَتَبَ فِي قُلُوبِهِمُ الْإِيمَانَ وَأَيَّدَهُم بِرُوحٍ مِّنْهُ ۖ وَيُدْخِلُهُمْ جَنَّاتٍ تَجْرِي مِن تَحْتِهَا الْأَنْهَارُ خَالِدِينَ فِيهَا ۚ رَضِيَ اللَّهُ عَنْهُمْ وَرَضُوا عَنْهُ ۚ أُولَٰئِكَ حِزْبُ اللَّهِ ۚ أَلَا إِنَّ حِزْبَ اللَّهِ هُمُ الْمُفْلِحُونَ ﴿٢٢﴾

២២-អ្នក(មូហាំម៉ាត់)នឹងមិនជួបប្រទះក្រុមដែលមានជំនឿលើអល់ឡោះនិងថ្ងៃបរលោក អាណិតស្រឡាញ់ពួកដែលប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ឡើយ ទោះបីជាពួកគេជាឪពុករបស់ពួកគេ ឬកូនចៅរបស់ពួកគេ ឬបងប្អូនរបស់ពួកគេ ឬក៏ពូជពង្សរបស់ពួកគេក៏ដោយ។ ពួកទាំងនោះហើយដែលទ្រង់បានចារទុកនូវភាពមានជំនឿនៅក្នុងដួងចិត្តរបស់ពួកគេ ហើយទ្រង់បានធ្វើឱ្យពួកគេមានភាពរឹងមាំកាន់តែខ្លាំងដោយមានជំនួយពីទ្រង់។ ហើយទ្រង់នឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេនៅក្នុងនោះជាអមតៈ។ អល់ឡោះបានយល់ព្រមចំពោះពួកគេ។ ហើយពួកគេក៏បានយល់ព្រមចំពោះទ្រង់វិញដែរ។ អ្នកទាំងនោះគឺជាក្រុមរបស់អល់ឡោះ។ ចូរដឹងថាៈ ពិតប្រាកដណាស់ ក្រុមរបស់អល់ឡោះគឺជាអ្នកដែលទទួលបានជ័យជំនះ។

## سورة الحشر

## ជំពូក អាល់ហាស្ហ័រ

بِسْمِ اللَّهِ الرَّحْمَٰنِ الرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

سَبَّحَ لِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۖ وَهُوَ ٱلۡعَزِيزُ ٱلۡحَكِيمُ ١

១-អ្វីៗដែលមាននៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលមាននៅលើផែនដីបានលើកតម្កើងចំពោះអល់ឡោះ។ ហើយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត។

هُوَ ٱلَّذِيٓ أَخۡرَجَ ٱلَّذِينَ كَفَرُواْ مِنۡ أَهۡلِ ٱلۡكِتَٰبِ مِن دِيَٰرِهِمۡ لِأَوَّلِ ٱلۡحَشۡرِۚ مَا ظَنَنتُمۡ أَن يَخۡرُجُواْۖ وَظَنُّوٓاْ أَنَّهُم مَّانِعَتُهُمۡ حُصُونُهُم مِّنَ ٱللَّهِ فَأَتَىٰهُمُ ٱللَّهُ مِنۡ حَيۡثُ لَمۡ يَحۡتَسِبُواْۖ وَقَذَفَ فِي قُلُوبِهِمُ ٱلرُّعۡبَۚ يُخۡرِبُونَ بُيُوتَهُم بِأَيۡدِيهِمۡ وَأَيۡدِي ٱلۡمُؤۡمِنِينَ فَٱعۡتَبِرُواْ يَٰٓأُوْلِي ٱلۡأَبۡصَٰرِ ٢

២-ទ្រង់ជាអ្នកដែលបានបណ្ដេញពួកដែលគ្មានជំនឿនៅក្នុងចំណោមពួកអះលីគីតាប( យ៉ាហ៊ូទីនៃអំបូរណាឌៀរ) ចេញពីលំនៅដ្ឋានរបស់ពួកគេ ដែលជាការចាកចេញដំបូងបង្អស់។ ពួកអ្នក( ពួកមូស្លីម) មិនបានគិតថា ពួកគេ( យ៉ាហ៊ូទី) នឹងចាកចេញឡើយ។ ហើយពួកគេបានគិតថា ពិតប្រាកដណាស់ បន្ទាយរបស់ពួកគេអាចការពារពួកគេពី( ទារុណកម្ម) អល់ឡោះបាន។ ប៉ុន្ដែអល់ឡោះបានផ្ដល់វាឱ្យពួកគេ ខណៈដែលពួកគេនឹកស្មានមិនដល់។ ហើយទ្រង់បានបញ្ចូលការភ័យខ្លាចទៅក្នុងចិត្ដរបស់ពួកគេ ខណៈដែលពួកគេបំផ្លាញលំនៅដ្ឋានរបស់ពួកគេដោយដៃពួកគេផ្ទាល់ និងដោយដៃរបស់បណ្ដាអ្នកមានជំនឿ។ ដូច្នេះ ចូរពិចារណាចុះ ឱបណ្ដាអ្នកដែលមានការឈ្វេងយល់!

وَلَوۡلَآ أَن كَتَبَ ٱللَّهُ عَلَيۡهِمُ ٱلۡجَلَآءَ لَعَذَّبَهُمۡ فِي ٱلدُّنۡيَاۖ وَلَهُمۡ فِي ٱلۡأٓخِرَةِ عَذَابُ ٱلنَّارِ ٣

៣-ហើយប្រសិនបើអល់ឡោះមិនបានដាក់បញ្ញាលើពួកគេ( យ៉ាហ៊ូទី) ឱ្យចាកចេញពីលំនៅដ្ឋានរបស់ពួកគេទេនោះ ទ្រង់ពិតជានឹងធ្វើទារុណកម្មពួកគេនៅក្នុងលោកិយនេះជាមិនខាន។ ហើយនៅថ្ងៃបរលោកវិញ ពួកគេនឹងទទួលទារុណកម្មនៃភ្លើងនរក។

ذَٰلِكَ بِأَنَّهُمۡ شَآقُّواْ ٱللَّهَ وَرَسُولَهُۥۖ وَمَن يُشَآقِّ ٱللَّهَ فَإِنَّ ٱللَّهَ شَدِيدُ ٱلۡعِقَابِ ٤

៤-នោះគឺដោយសារតែពួកគេ( យ៉ាហ៊ូទី) ប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់។ ហើយអ្នកណាដែលប្រឆាំងនឹងអល់ឡោះ ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកដាក់ទណ្ឌកម្មដ៏ធ្ងន់ធ្ងរបំផុត។

مَا قَطَعۡتُم مِّن لِّينَةٍ أَوۡ تَرَكۡتُمُوهَا قَآئِمَةً عَلَىٰٓ أُصُولِهَا فَبِإِذۡنِ ٱللَّهِ وَلِيُخۡزِيَ ٱلۡفَٰسِقِينَ ٥

៥-ដើមល្មើដែលពួកអ្នក( អ្នកមូស្លីម) បានកាប់រំលំ ឬក៏ពួកអ្នកទុកវាឱ្យឈរនៅលើគល់របស់វានោះ គឺជាការអនុញ្ញាតរបស់អល់ឡោះ និងដើម្បីទ្រង់ធ្វើឱ្យពួកដែលល្មើសនឹងបទបញ្ជារបស់ទ្រង់អាម៉ាស់។

وَمَآ أَفَآءَ ٱللَّهُ عَلَىٰ رَسُولِهِۦ مِنۡهُمۡ فَمَآ أَوۡجَفۡتُمۡ عَلَيۡهِ مِنۡ خَيۡلٖ وَلَا رِكَابٖ وَلَٰكِنَّ ٱللَّهَ يُسَلِّطُ

៦-ហើយអ្វីៗដែលអល់ឡោះបានប្រទានជាជ័យភណ្ឌឱ្យអ្នកនាំសាររបស់ទ្រង់អំពី( ទ្រព្យសម្បត្តិ) ពួកគេនោះ គឺពួកអ្នកមិនបានចំណាយសេះមួយក្បាល ឬសត្វអូដ្ឋមួយក្បាលសម្រាប់ជិះយកទៅ

رُسُلَهُۥ عَلَىٰ مَن يَشَآءُ ۚ وَٱللَّهُ عَلَىٰ كُلِّ شَىْءٍ
قَدِيرٌ ٦

ច្បាំងឡើយ ។ ប៉ុន្តែអល់ឡោះផ្តល់អានុភាពដល់បណ្តាអ្នកនាំសាររបស់ទ្រង់ទៅលើអ្នកណាដែលទ្រង់មានចេតនា ។ ហើយអល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ។

مَّآ أَفَآءَ ٱللَّهُ عَلَىٰ رَسُولِهِۦ مِنْ أَهْلِ ٱلْقُرَىٰ
فَلِلَّهِ وَلِلرَّسُولِ وَلِذِى ٱلْقُرْبَىٰ وَٱلْيَتَٰمَىٰ
وَٱلْمَسَٰكِينِ وَٱبْنِ ٱلسَّبِيلِ كَىْ لَا يَكُونَ دُولَةًۢ
بَيْنَ ٱلْأَغْنِيَآءِ مِنكُمْ ۚ وَمَآ ءَاتَىٰكُمُ ٱلرَّسُولُ
فَخُذُوهُ وَمَا نَهَىٰكُمْ عَنْهُ فَٱنتَهُوا۟ ۚ وَٱتَّقُوا۟ ٱللَّهَ ۖ
إِنَّ ٱللَّهَ شَدِيدُ ٱلْعِقَابِ ٧

៧-អ្វីៗដែលអល់ឡោះប្រទានជាជ័យភណ្ឌឱ្យអ្នកនាំសាររបស់ទ្រង់ ដែលជាទ្រព្យសម្បត្តិរបស់អ្នកភូមិស្រុក(ពួកមូស្ហរីគីន) នោះគឺសម្រាប់អល់ឡោះ និងសម្រាប់អ្នកនាំសារ និងសម្រាប់សាច់ញាតិរបស់អ្នកនាំសារ និងក្មេងកំព្រា និងអ្នកក្រីក្រ ហើយនិងអ្នកធ្វើដំណើរដាច់ស្បៀង ដើម្បីកុំឱ្យទ្រព្យសម្បត្តិនោះស្ថិតក្នុងកណ្តាប់ដៃអ្នកមានណាម្នាក់ក្នុងចំណោមពួកអ្នក ។ ហើយអ្វីដែលអ្នកនាំសារបានផ្តល់ឱ្យពួកអ្នក ចូរពួកអ្នកទទួលយកវាចុះ ហើយអ្វីដែលគាត់បានហាមឃាត់ពួកអ្នកអំពីវា ចូរពួកអ្នកបោះបង់ចោលចុះ ។ ចូរពួកអ្នកកោតខ្លាចអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកដាក់ទណ្ឌកម្មដ៏ធ្ងន់ធ្ងរបំផុត ។

لِلْفُقَرَآءِ ٱلْمُهَٰجِرِينَ ٱلَّذِينَ أُخْرِجُوا۟ مِن
دِيَٰرِهِمْ وَأَمْوَٰلِهِمْ يَبْتَغُونَ فَضْلًا مِّنَ ٱللَّهِ
وَرِضْوَٰنًا وَيَنصُرُونَ ٱللَّهَ وَرَسُولَهُۥٓ ۚ أُو۟لَٰٓئِكَ
هُمُ ٱلصَّٰدِقُونَ ٨

៨-(ជ័យភណ្ឌនោះដែរ) សម្រាប់បណ្តាអ្នកដែលក្រីក្រនៃពួកមូហាជីរីនដែលត្រូវបានគេបណ្តេញចេញពីលំនៅដ្ឋានរបស់ពួកគេ និងទ្រព្យសម្បត្តិរបស់ពួកគេ ខណៈដែលពួកគេស្វែងរកការប្រោសប្រទាន និងការយល់ព្រមពីអល់ឡោះ ថែមទាំងពួកគេបានជួយ (សាសនារបស់) អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ។ អ្នកទាំងនោះហើយគឺជាអ្នកដែលត្រឹមត្រូវ ។

وَٱلَّذِينَ تَبَوَّءُو ٱلدَّارَ وَٱلْإِيمَٰنَ مِن قَبْلِهِمْ
يُحِبُّونَ مَنْ هَاجَرَ إِلَيْهِمْ وَلَا يَجِدُونَ فِى
صُدُورِهِمْ حَاجَةً مِّمَّآ أُوتُوا۟ وَيُؤْثِرُونَ
عَلَىٰٓ أَنفُسِهِمْ وَلَوْ كَانَ بِهِمْ خَصَاصَةٌ ۚ وَمَن
يُوقَ شُحَّ نَفْسِهِۦ فَأُو۟لَٰٓئِكَ هُمُ
ٱلْمُفْلِحُونَ ٩

៩-ហើយបណ្តាអ្នកដែលរស់នៅទីក្រុងម៉ាឌីណះ និងមានជំនឿមុនការភៀសខ្លួនរបស់ពួកគេនោះ គឺពួកគេ(អាន់ស័រ) ស្រឡាញ់អ្នកដែលបានភៀសខ្លួនទៅកាន់ពួកគេ ហើយនៅក្នុងចិត្តរបស់ពួកគេគ្មានភាពច្រណែនឈ្នានីសអំពីអ្វីៗដែលគេបានផ្តល់ឱ្យពួកគេ (មូហាជីរីន) ឡើយ ថែមទាំងពួកគេគិតគូរ(ពួកមូហាជីរីន) ជាងខ្លួនឯងទៅទៀត ទោះបីជាពួកគេត្រូវការចាំបាច់យ៉ាងណាក៏ដោយ ។ ហើយអ្នកណាដែលត្រូវគេរក្សាឱ្យផុតពីភាពកំណាញ់ចំពោះខ្លួនគេនោះ ពួកទាំងនោះគឺជាពួកដែលទទួលបានជោគជ័យ ។

وَٱلَّذِينَ جَآءُو مِنۢ بَعْدِهِمْ يَقُولُونَ رَبَّنَا

១០-ហើយបណ្តាអ្នកដែលបានមកដល់ក្រោយអ្នកទាំងនោះ

(មូហាជីរីន និងអាន់ស័រ) ពួកគេបានបួងសួងសុំថា: ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាអភ័យទោសឱ្យពួកយើង និងបងប្អូនរបស់ពួកយើងពីមុនៗដែលមានជំនឿផង ។ ហើយសូមទ្រង់មេត្តាកុំធ្វើឱ្យចិត្តរបស់ពួកយើងមានភាពច្រណែនឈ្នានីសចំពោះបណ្ដាអ្នកដែលមានជំនឿអ្វី ។ ឱម្ចាស់របស់ពួកយើង! ពិតប្រាកដណាស់ អល់ឡោះមហាមេត្តាករុណា មហាអាណិតស្រឡាញ់ ។

ٱغۡفِرۡ لَنَا وَلِإِخۡوَٰنِنَا ٱلَّذِينَ سَبَقُونَا
بِٱلۡإِيمَٰنِ وَلَا تَجۡعَلۡ فِي قُلُوبِنَا غِلّٗا لِّلَّذِينَ
ءَامَنُواْ رَبَّنَآ إِنَّكَ رَءُوفٞ رَّحِيمٌ ﴿١٠﴾

១១-តើអ្នក(មូហាំម៉ាត់)មិនបានមើលទេឬ ចំពោះពួកពុតត្បុតដែលនិយាយទៅកាន់បងប្អូនរបស់ពួកគេដែលបានប្រឆាំងក្នុងចំណោមពួកអះលីគីតាប(យ៉ាហ៊ូទីនៃអំបូរណាឌៀរ)ថា: ប្រសិនបើពួកអ្នកត្រូវគេបណ្ដេញចេញ យើងពិតជានឹងចាកចេញជាមួយពួកអ្នកដែរ ហើយយើងមិនធ្វើតាមអ្នកណាម្នាក់ដែលប្រឆាំងនឹងពួកអ្នកជាដាច់ខាត ។ តែប្រសិនបើពួកអ្នកត្រូវគេវាយប្រហារវិញ យើងពិតជាជួយពួកអ្នកនោះ? ហើយអល់ឡោះជាអ្នកធ្វើសាក្សីថា ពិតប្រាកដណាស់ ពួកគេគឺជាពួកភូតកុហក ។

۞ أَلَمۡ تَرَ إِلَى ٱلَّذِينَ نَافَقُواْ يَقُولُونَ
لِإِخۡوَٰنِهِمُ ٱلَّذِينَ كَفَرُواْ مِنۡ أَهۡلِ ٱلۡكِتَٰبِ
لَئِنۡ أُخۡرِجۡتُمۡ لَنَخۡرُجَنَّ مَعَكُمۡ وَلَا نُطِيعُ
فِيكُمۡ أَحَدًا أَبَدٗا وَإِن قُوتِلۡتُمۡ لَنَنصُرَنَّكُمۡ
وَٱللَّهُ يَشۡهَدُ إِنَّهُمۡ لَكَٰذِبُونَ ﴿١١﴾

១២-ប្រសិនបើពួកគេ(ពួកយ៉ាហ៊ូទី)ត្រូវបានគេបណ្ដេញវិញនោះ ពួកគេ(ពួកពុតត្បុត)មិនចាកចេញជាមួយពួកនោះឡើយ ។ ហើយប្រសិនបើពួកយ៉ាហ៊ូទីត្រូវបានគេវាយប្រហារវិញ ពួកពុតត្បុតក៏មិនជួយពួកគេដែរ ។ តែប្រសិនបើពួកពុតត្បុតជួយពួកគេវិញ ពួកនោះពិតជានឹងត្រឡប់ក្រោយវិញ ។ បន្ទាប់មកពួកគេ(ពួកយ៉ាហ៊ូទី) មិនត្រូវបានគេជួយឡើយ ។

لَئِنۡ أُخۡرِجُواْ لَا يَخۡرُجُونَ مَعَهُمۡ وَلَئِن قُوتِلُواْ
لَا يَنصُرُونَهُمۡ وَلَئِن نَّصَرُوهُمۡ لَيُوَلُّنَّ
ٱلۡأَدۡبَٰرَ ثُمَّ لَا يُنصَرُونَ ﴿١٢﴾

១៣-ជាការពិតណាស់ នៅក្នុងចិត្តពួកគេ(ពួកពុតត្បុត)ខ្លាចពួកអ្នក(មូស្លីម)ជាងខ្លាចអល់ឡោះទៅទៀត ។ នោះដោយសារតែពួកគេជាក្រុមដែលពុំមានការស្វែងយល់ឡើយ ។

لَأَنتُمۡ أَشَدُّ رَهۡبَةٗ فِي صُدُورِهِم مِّنَ ٱللَّهِۚ
ذَٰلِكَ بِأَنَّهُمۡ قَوۡمٞ لَّا يَفۡقَهُونَ ﴿١٣﴾

១៤-ពួកគេ(ពួកយ៉ាហ៊ូទី និងពួកពុតត្បុត)មិនរួមគ្នាវាយប្រហារពួកអ្នកឡើយ លើកលែងតែនៅក្នុងតំបន់ដែលពួកគេការពារ ឬក៏លួចវាយប្រហារពីក្រោយជញ្ជាំងប៉ុណ្ណោះ ។ ភាពជាសត្រូវរវាងពួកគេគឺខ្លាំងក្លាបំផុត ។ ហើយអ្នក(មូហាំម៉ាត់)គិតថាពួកគេរួបរួមគ្នា ប៉ុន្តែផ្ទុយទៅវិញដួងចិត្តរបស់ពួកគេផ្សេងៗគ្នា ។ នោះដោយ

لَا يُقَٰتِلُونَكُمۡ جَمِيعًا إِلَّا فِي قُرٗى مُّحَصَّنَةٍ أَوۡ
مِن وَرَآءِ جُدُرِۭۚ بَأۡسُهُم بَيۡنَهُمۡ شَدِيدٞۚ
تَحۡسَبُهُمۡ جَمِيعٗا وَقُلُوبُهُمۡ شَتَّىٰۚ ذَٰلِكَ بِأَنَّهُمۡ
قَوۡمٞ لَّا يَعۡقِلُونَ ﴿١٤﴾

សារតែពួកគេជាក្រុមដែលមិនបានស្វែងយល់ឡើយ ។

كَمَثَلِ ٱلَّذِينَ مِن قَبۡلِهِمۡ قَرِيبٗاۖ ذَاقُواْ وَبَالَ
أَمۡرِهِمۡ وَلَهُمۡ عَذَابٌ أَلِيمٞ ١٥

១៥-(ពួកទាំងនោះ) ក៏ដូចជាពួក(យ៉ាហ៊ូទី) មុនពួកគេបន្តិចនេះដែរ ។ ពួកគេ(យ៉ាហ៊ូទី) បានភ្លក្សនូវលទ្ធផលចុងក្រោយរបស់ពួកគេដ៏អាក្រក់ ។ ហើយពួកគេនឹងទទួលទារុណកម្មដ៏សែនឈឺចាប់ ។

كَمَثَلِ ٱلشَّيۡطَٰنِ إِذۡ قَالَ لِلۡإِنسَٰنِ ٱكۡفُرۡ
فَلَمَّا كَفَرَ قَالَ إِنِّي بَرِيٓءٞ مِّنكَ إِنِّيٓ أَخَافُ
ٱللَّهَ رَبَّ ٱلۡعَٰلَمِينَ ١٦

១៦-(ពួកពុតត្បុត) ក៏ដូចជាស្ហៃតនដែរ នៅពេលដែលវានិយាយទៅកាន់មនុស្សថា: ចូរអ្នកប្រឆាំង(នឹងអល់ឡោះ)ចុះ ។ ហើយនៅពេលដែលគេបានប្រឆាំង វាបែរជានិយាយថា: ពិតប្រាកដណាស់ ខ្ញុំមិនពាក់ព័ន្ធជាមួយអ្នកឡើយ ។ ពិតប្រាកដណាស់ ខ្ញុំខ្លាចអល់ឡោះដែលជាម្ចាស់គ្រប់គ្រងពិភពទាំងអស់ ។

فَكَانَ عَٰقِبَتَهُمَآ أَنَّهُمَا فِي ٱلنَّارِ خَٰلِدَيۡنِ فِيهَاۚ
وَذَٰلِكَ جَزَٰٓؤُاْ ٱلظَّٰلِمِينَ ١٧

១៧-ហើយលទ្ធផលចុងក្រោយរបស់ពួកគេទាំងពីរ(ស្ហៃតន និងអ្នកដែលតាមវា) គឺស្ថិតនៅក្នុងភ្លើងនរកដោយពួកគេទាំងពីរនៅក្នុងនោះជាអមតៈ ។ នោះហើយគឺជាការតបស្នងរបស់ពួកដែលបំពាន ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ وَلۡتَنظُرۡ
نَفۡسٞ مَّا قَدَّمَتۡ لِغَدٖۖ وَٱتَّقُواْ ٱللَّهَۚ إِنَّ ٱللَّهَ
خَبِيرُۢ بِمَا تَعۡمَلُونَ ١٨

១៨-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកោតខ្លាចអល់ឡោះ ហើយចូរឱ្យបុគ្គលគ្រប់ៗរូបពិចារណាមើល តើអ្វីខ្លះដែលគេបានធ្វើសម្រាប់ថ្ងៃស្អែក(ថ្ងៃបរលោក)នោះ? ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះ ។ ពិតប្រាកដណាស់ អល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

وَلَا تَكُونُواْ كَٱلَّذِينَ نَسُواْ ٱللَّهَ فَأَنسَىٰهُمۡ
أَنفُسَهُمۡۚ أُوْلَٰٓئِكَ هُمُ ٱلۡفَٰسِقُونَ ١٩

១៩-ហើយចូរពួកអ្នក(អ្នកមានជំនឿ)កុំធ្វើដូចពួកដែលបានភ្លេចអល់ឡោះឱ្យសោះ ។ តែអល់ឡោះវិញទេដែលបានធ្វើឱ្យពួកគេភ្លេចខ្លួនឯងនោះ ។ ពួកទាំងនោះគឺជាពួកដែលល្មើសនឹងបទបញ្ជារបស់អល់ឡោះ ។

لَا يَسۡتَوِيٓ أَصۡحَٰبُ ٱلنَّارِ وَأَصۡحَٰبُ ٱلۡجَنَّةِۚ
أَصۡحَٰبُ ٱلۡجَنَّةِ هُمُ ٱلۡفَآئِزُونَ ٢٠

២០-ពួកឋាននរក និងបណ្ដាអ្នកឋានសួគ៌មិនស្មើគ្នាឡើយ ។ បណ្ដាអ្នកឋានសួគ៌គឺជាអ្នកដែលទទួលបានជោគជ័យ ។

لَوۡ أَنزَلۡنَا هَٰذَا ٱلۡقُرۡءَانَ عَلَىٰ جَبَلٖ
لَّرَأَيۡتَهُۥ خَٰشِعٗا مُّتَصَدِّعٗا مِّنۡ خَشۡيَةِ ٱللَّهِۚ

២១-ប្រសិនបើយើងបញ្ចុះគម្ពីរគួរអាននេះទៅលើភ្នំណាមួយ អ្នកពិតជានឹងឃើញភ្នំនោះឱនលំទោនរហូតដល់បែកជាបំណែកដោយសារខ្លាចអល់ឡោះ ។ ឧទាហរណ៍ទាំងនោះយើងលើកឡើង

សម្រាប់មនុស្សលោក សង្ឃឹមថាពួកគេត្រិះរិះពិចារណា។

២២-ទ្រង់គឺអល់ឡោះជាម្ចាស់ ដែលគ្មានម្ចាស់ណាត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ។ ទ្រង់ជាម្ចាស់ដែលដឹងនូវភាពអាថិកំបាំង និងភាពលាតត្រដាង។ ទ្រង់ជាម្ចាស់មហាសប្បុរស មហាអាណិតស្រឡាញ់។

២៣-ទ្រង់គឺអល់ឡោះជាម្ចាស់ ដែលគ្មានម្ចាស់ណាត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ដែលជាស្ដេចដ៏មហាជ្រះស្អាត ស្អាតស្អំគ្រប់លក្ខណៈ ផ្ដល់នូវសុវត្ថិភាពត្រួតត្រារាល់ទង្វើនៃខ្ញុំរបស់ទ្រង់ មានអនុភាពខ្លាំងពូកែ ខ្ពង់ខ្ពស់ ថ្កុំថ្កើងបំផុត។ អល់ឡោះមហាស្អាតស្អំអំពីអ្វីដែលពួកគេកំពុងធ្វើស្ហ៊ីរិកនោះ។

២៤-ទ្រង់គឺអល់ឡោះជាម្ចាស់ដែលជាអ្នកបង្កើតជាអ្នកធ្វើឱ្យមានរូបរាង។ ទ្រង់មាននាមជាច្រើនដ៏ល្អប្រពៃ។ អ្វីៗនៅលើមេឃជាច្រើនជាន់ និងផែនដីលើកតម្កើងទ្រង់។ ហើយទ្រង់មហាខ្លាំងពូកែមហាគតិបណ្ឌិត។

## ជំពូក អាល់មុមតាហ៊ីណះ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំយកសត្រូវរបស់យើងនិងសត្រូវរបស់ពួកអ្នកធ្វើជាមិត្ត ដោយពួកអ្នកបង្ហាញនូវសេចក្ដីស្រឡាញ់ដល់ពួកគេឱ្យសោះ ព្រោះពួកគេពិតជាបានប្រឆាំងនឹងអ្វីដែលបានមកដល់ពួកអ្នកអំពីការពិត។ ពួកគេបណ្ដេញអ្នកនាំសារ និងពួកអ្នកចេញ(ពីម៉ាក្កះ)ដោយសារតែពួកអ្នកមានជំនឿលើអល់ឡោះដែលជាម្ចាស់របស់ពួកអ្នក។ ប្រសិនបើពួកអ្នកចាកចេញដើម្បីតស៊ូក្នុងមាគ៌ារបស់យើង ដោយស្វែងរកការយល់ព្រមរបស់យើងនោះ (ចូរពួកអ្នកកុំយកពួកសត្រូវធ្វើជាមិត្តឱ្យសោះ) ដោយពួកអ្នកប្រាប់រឿងសម្ងាត់ដល់ពួកគេដោយសេចក្ដីស្រឡាញ់

وَتِلْكَ ٱلْأَمْثَٰلُ نَضْرِبُهَا لِلنَّاسِ لَعَلَّهُمْ
يَتَفَكَّرُونَ ﴿٢١﴾
هُوَ ٱللَّهُ ٱلَّذِى لَآ إِلَٰهَ إِلَّا هُوَ ۖ عَٰلِمُ ٱلْغَيْبِ
وَٱلشَّهَٰدَةِ ۖ هُوَ ٱلرَّحْمَٰنُ ٱلرَّحِيمُ ﴿٢٢﴾

هُوَ ٱللَّهُ ٱلَّذِى لَآ إِلَٰهَ إِلَّا هُوَ ٱلْمَلِكُ
ٱلْقُدُّوسُ ٱلسَّلَٰمُ ٱلْمُؤْمِنُ ٱلْمُهَيْمِنُ
ٱلْعَزِيزُ ٱلْجَبَّارُ ٱلْمُتَكَبِّرُ ۚ سُبْحَٰنَ ٱللَّهِ عَمَّا
يُشْرِكُونَ ﴿٢٣﴾
هُوَ ٱللَّهُ ٱلْخَٰلِقُ ٱلْبَارِئُ ٱلْمُصَوِّرُ ۖ لَهُ
ٱلْأَسْمَآءُ ٱلْحُسْنَىٰ ۚ يُسَبِّحُ لَهُۥ مَا فِى
ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۖ وَهُوَ ٱلْعَزِيزُ
ٱلْحَكِيمُ ﴿٢٤﴾

سورة الممتحنة

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ لَا تَتَّخِذُوا۟ عَدُوِّى
وَعَدُوَّكُمْ أَوْلِيَآءَ تُلْقُونَ إِلَيْهِم بِٱلْمَوَدَّةِ
وَقَدْ كَفَرُوا۟ بِمَا جَآءَكُم مِّنَ ٱلْحَقِّ يُخْرِجُونَ
ٱلرَّسُولَ وَإِيَّاكُمْ ۙ أَن تُؤْمِنُوا۟ بِٱللَّهِ رَبِّكُمْ إِن
كُنتُمْ خَرَجْتُمْ جِهَٰدًا فِى سَبِيلِى وَٱبْتِغَآءَ
مَرْضَاتِى ۚ تُسِرُّونَ إِلَيْهِم بِٱلْمَوَدَّةِ وَأَنَا۠ أَعْلَمُ
بِمَآ أَخْفَيْتُمْ وَمَآ أَعْلَنتُمْ ۚ وَمَن يَفْعَلْهُ مِنكُمْ

ឱ្យសោះ ព្រោះយើងដឹងនូវអ្វីដែលពួកអ្នកបានលាក់បាំង និងអ្វីដែលពួកអ្នកបានលាតត្រដាង។ អ្នកណាហើយក្នុងចំណោមពួកអ្នកធ្វើដូច្នេះ គេពិតជាវង្វេងចេញពីមាគ៌ាដែលត្រឹមត្រូវជាមិនខាន។

២-ប្រសិនបើពួកគេមានអំណាចលើពួកអ្នកវិញ ពួកគេនឹងចាត់ទុកពួកអ្នកជាសត្រូវ ហើយពួកគេនឹងប្រើកាយវិការរបស់ពួកគេ និងពាក្យសំដីរបស់ពួកគេដ៏អាក្រក់ទៅលើពួកអ្នកជាមិនខាន។ ហើយពួកគេចង់ឱ្យពួកអ្នកគ្មានជំនឿ(ដូចពួកគេ)ដែរ។

៣-ពូជពង្សរបស់ពួកអ្នក និងកូនចៅរបស់ពួកអ្នកនឹងមិនផ្ដល់ផលប្រយោជន៍ដល់ពួកអ្នកឡើយនៅថ្ងៃបរលោកដោយទ្រង់នឹងបំបែកពួកអ្នកទាំងអស់គ្នា។ ហើយអល់ឡោះឃើញទាំងអស់នូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

៤-ជាការពិតណាស់ ពួកអ្នកមានអ៊ីព្រហ៊ីមជាគំរូដ៏ល្អម្នាក់ និងបណ្ដាអ្នកដែលរួមជំនឿជាមួយគាត់ នៅពេលដែលពួកគាត់បានពោលទៅកាន់ក្រុមរបស់ពួកគាត់ថា: ពិតប្រាកដណាស់ ពួកយើងមិនពាក់ព័ន្ធជាមួយពួកអ្នក និងអ្វីដែលពួកអ្នកកំពុងគោរពសក្ការៈផ្សេងពីអល់ឡោះឡើយ។ ពួកយើងបានប្រឆាំងនឹងពួកអ្នក ហើយវាបានស្ដែងឱ្យឃើញថា រវាងពួកយើងនិងពួកអ្នកគឺជាសត្រូវ និងស្អប់ខ្ពើមគ្នាជាដរាប លុះត្រាតែពួកអ្នកមានជំនឿលើអល់ឡោះតែមួយគត់ លើកលែងតែពាក្យសំដីរបស់អ៊ីព្រហ៊ីមប៉ុណ្ណោះដែលបានពោលទៅកាន់ឪពុករបស់គាត់ថា: ខ្ញុំនឹងសុំអភ័យទោសពីអល់ឡោះឱ្យអ្នក ព្រោះខ្ញុំគ្មានលទ្ធភាពអ្វីការពារអ្នកពី(ទណ្ឌកម្ម)អល់ឡោះឡើយ។ ឱម្ចាស់របស់ពួកយើង! ចំពោះទ្រង់ហើយដែលពួកយើងប្រគល់ការទុកចិត្ត ហើយចំពោះទ្រង់ដែលពួកយើងសារភាពទោសកំហុស ហើយចំពោះទ្រង់ក៏ជាកន្លែងវិលត្រឡប់(របស់ពួកយើង)ដែរ(នៅថ្ងៃបរលោក)។

៥-ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្ដាកុំធ្វើឱ្យពួកយើងក្លាយជាការសាកល្បងរបស់ពួកដែលគ្មានជំនឿអ្វី។ ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្ដាអភ័យទោសដល់ពួកយើងផង។ ពិត

فَقَدۡ ضَلَّ سَوَآءَ ٱلسَّبِيلِ ﴿١﴾

إِن يَثۡقَفُوكُمۡ يَكُونُواْ لَكُمۡ أَعۡدَآءٗ وَيَبۡسُطُوٓاْ إِلَيۡكُمۡ أَيۡدِيَهُمۡ وَأَلۡسِنَتَهُم بِٱلسُّوٓءِ وَوَدُّواْ لَوۡ تَكۡفُرُونَ ﴿٢﴾

لَن تَنفَعَكُمۡ أَرۡحَامُكُمۡ وَلَآ أَوۡلَٰدُكُمۡۚ يَوۡمَ ٱلۡقِيَٰمَةِ يَفۡصِلُ بَيۡنَكُمۡۚ وَٱللَّهُ بِمَا تَعۡمَلُونَ بَصِيرٞ ﴿٣﴾

قَدۡ كَانَتۡ لَكُمۡ أُسۡوَةٌ حَسَنَةٞ فِيٓ إِبۡرَٰهِيمَ وَٱلَّذِينَ مَعَهُۥٓ إِذۡ قَالُواْ لِقَوۡمِهِمۡ إِنَّا بُرَءَٰٓؤُاْ مِنكُمۡ وَمِمَّا تَعۡبُدُونَ مِن دُونِ ٱللَّهِ كَفَرۡنَا بِكُمۡ وَبَدَا بَيۡنَنَا وَبَيۡنَكُمُ ٱلۡعَدَٰوَةُ وَٱلۡبَغۡضَآءُ أَبَدًا حَتَّىٰ تُؤۡمِنُواْ بِٱللَّهِ وَحۡدَهُۥٓ إِلَّا قَوۡلَ إِبۡرَٰهِيمَ لِأَبِيهِ لَأَسۡتَغۡفِرَنَّ لَكَ وَمَآ أَمۡلِكُ لَكَ مِنَ ٱللَّهِ مِن شَيۡءٖۖ رَّبَّنَا عَلَيۡكَ تَوَكَّلۡنَا وَإِلَيۡكَ أَنَبۡنَا وَإِلَيۡكَ ٱلۡمَصِيرُ ﴿٤﴾

رَبَّنَا لَا تَجۡعَلۡنَا فِتۡنَةٗ لِّلَّذِينَ كَفَرُواْ وَٱغۡفِرۡ لَنَا رَبَّنَآۖ إِنَّكَ أَنتَ ٱلۡعَزِيزُ ٱلۡحَكِيمُ ﴿٥﴾

ប្រាកដណាស់ ទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត ។

لَقَدْ كَانَ لَكُمْ فِيهِمْ أُسْوَةٌ حَسَنَةٌ لِّمَن كَانَ
يَرْجُوا۟ ٱللَّهَ وَٱلْيَوْمَ ٱلْـَٔاخِرَ ۚ وَمَن يَتَوَلَّ فَإِنَّ ٱللَّهَ
هُوَ ٱلْغَنِىُّ ٱلْحَمِيدُ ﴿٦﴾

៦-ជាការពិតណាស់ ពួកអ្នកមានពួកគេជាគំរូដ៏ល្អសម្រាប់អ្នកណាដែលសង្ឃឹមថានឹងជួបអល់ឡោះ និង( បានរួចផុតពីទារុណកម្ម) នៅថ្ងៃបរលោក ។ រីឯអ្នកណាហើយបែរចេញ( ពីអល់ឡោះ ) វិញ ពិតប្រាកដណាស់អល់ឡោះ ទ្រង់មហាមានលើសលុប ជាទីកោតសរសើរបំផុត ។

۞ عَسَى ٱللَّهُ أَن يَجْعَلَ بَيْنَكُمْ وَبَيْنَ ٱلَّذِينَ
عَادَيْتُم مِّنْهُم مَّوَدَّةً ۚ وَٱللَّهُ قَدِيرٌ ۚ وَٱللَّهُ غَفُورٌ
رَّحِيمٌ ﴿٧﴾

៧-សង្ឃឹមថាអល់ឡោះនឹងធ្វើឱ្យក្លាយជាមិត្តរវាងពួកអ្នក និងពួកដែលជាសត្រូវនឹងពួកអ្នក ។ ហើយអល់ឡោះមហាមានអានុភាព ។ ហើយអល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

لَّا يَنْهَىٰكُمُ ٱللَّهُ عَنِ ٱلَّذِينَ لَمْ يُقَـٰتِلُوكُمْ
فِى ٱلدِّينِ وَلَمْ يُخْرِجُوكُم مِّن دِيَـٰرِكُمْ أَن
تَبَرُّوهُمْ وَتُقْسِطُوٓا۟ إِلَيْهِمْ ۚ إِنَّ ٱللَّهَ يُحِبُّ
ٱلْمُقْسِطِينَ ﴿٨﴾

៨-អល់ឡោះមិនហាមឃាត់ពួកអ្នកក្នុងការធ្វើល្អ និងផ្តល់ភាពយុត្តិធម៌ចំពោះពួកដែលមិនបានធ្វើសង្គ្រាមប្រឆាំងនឹងពួកអ្នកនៅក្នុងសាសនា និងមិនបានបណ្តេញពួកអ្នកចេញពីលំនៅដ្ឋានរបស់ពួកអ្នកឡើយ ។ ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្តាអ្នកដែលប្រកាន់ខ្ជាប់នូវភាពយុត្តិធម៌ ។

إِنَّمَا يَنْهَىٰكُمُ ٱللَّهُ عَنِ ٱلَّذِينَ قَـٰتَلُوكُمْ فِى ٱلدِّينِ
وَأَخْرَجُوكُم مِّن دِيَـٰرِكُمْ وَظَـٰهَرُوا۟ عَلَىٰٓ
إِخْرَاجِكُمْ أَن تَوَلَّوْهُمْ ۚ وَمَن يَتَوَلَّهُمْ
فَأُو۟لَـٰٓئِكَ هُمُ ٱلظَّـٰلِمُونَ ﴿٩﴾

៩-ពិតប្រាកដណាស់ អល់ឡោះហាមឃាត់ពួកអ្នកមិនឱ្យបង្កើតមិត្តភាពជាមួយពួកដែលបានធ្វើសង្គ្រាមប្រឆាំងនឹងពួកអ្នកនៅក្នុងសាសនា និងបានបណ្តេញពួកអ្នកចេញពីលំនៅដ្ឋានរបស់ពួកអ្នក ហើយពួកគេជួយអ្នកដទៃបណ្តេញពួកអ្នកទៀត ។ អ្នកណាហើយដែលយកពួកគេធ្វើជាមិត្តនោះ អ្នកទាំងនោះគឺជាអ្នកដែលបំពាន ។

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓا۟ إِذَا جَآءَكُمُ ٱلْمُؤْمِنَـٰتُ
مُهَـٰجِرَٰتٍ فَٱمْتَحِنُوهُنَّ ۖ ٱللَّهُ أَعْلَمُ بِإِيمَـٰنِهِنَّ ۖ
فَإِنْ عَلِمْتُمُوهُنَّ مُؤْمِنَـٰتٍ فَلَا تَرْجِعُوهُنَّ إِلَى
ٱلْكُفَّارِ ۖ لَا هُنَّ حِلٌّ لَّهُمْ وَلَا هُمْ يَحِلُّونَ لَهُنَّ ۖ
وَءَاتُوهُم مَّآ أَنفَقُوا۟ ۚ وَلَا جُنَاحَ عَلَيْكُمْ أَن
تَنكِحُوهُنَّ إِذَآ ءَاتَيْتُمُوهُنَّ أُجُورَهُنَّ ۚ وَلَا

១០-ឱបណ្តាអ្នកដែលមានជំនឿ! នៅពេលដែលក្រុមស្ត្រីអន្តោប្រវេសន៍ដែលមានជំនឿបានធ្វើដំណើរមកកាន់ពួកអ្នក ចូរពួកអ្នកសាកល្បងពួកនាងចុះ( ដើម្បីពួកអ្នកដឹងពីជំនឿរបស់ពួកនាង) ។ អល់ឡោះដឹងនូវជំនឿរបស់ពួកនាង ។ ប្រសិនបើពួកអ្នកបានដឹងថាពួកនាងជាអ្នកមានជំនឿ ចូរពួកអ្នកកុំឱ្យពួកនាងវិលទៅរកពួកគ្មានជំនឿវិញឱ្យសោះ( ស្វាមីរបស់ពួកនាង) ។ ពួកនាងមិនហាឡាល់( មិនស្របច្បាប់) សម្រាប់ពួកគេ( ស្វាមី) ឡើយ ហើយពួកគេក៏មិនហាឡាល់សម្រាប់ពួកនាងដែរ ។ ហើយចូរពួកអ្នក( អ្នកមានជំនឿ)

ផ្តល់ឱ្យពួកគេវិញនូវអ្វី(ខាន់ស្លា)ដែលពួកគេបានចំណាយ(ទៅលើពួកនាង)នោះ។ ហើយគ្មានទោសពៃរ៍ចំពោះពួកអ្នកក្នុងការរៀបអាពាហ៍ពិពាហ៍ជាមួយពួកនាងនៅពេលណាដែលពួកអ្នកផ្តល់ខាន់ស្លាឱ្យពួកនាងឡើយ។ ហើយចូរពួកអ្នកកុំរក្សាទុកស្ត្រីដែលគ្មានជំនឿធ្វើជាភរិយារបស់ពួកអ្នកទៀតឱ្យសោះ។ ហើយចូរពួកអ្នកសុំយកមកវិញនូវអ្វី(ខាន់ស្លា)ដែលពួកអ្នកបានចំណាយ។ ហើយពួកគេក៏ត្រូវសុំយកមកវិញដែរនូវអ្វីដែលពួកគេបានចំណាយនោះ។ ទាំងនោះគឺជាច្បាប់របស់អល់ឡោះ ដែលទ្រង់កាត់សេចក្តីរវាងពួកអ្នក។ ហើយអល់ឡោះមហាដឹង មហាគតិបណ្ឌិត។

تُمۡسِكُواْ بِعِصَمِ ٱلۡكَوَافِرِ وَسۡـَٔلُواْ مَآ أَنفَقۡتُمۡ وَلۡيَسۡـَٔلُواْ مَآ أَنفَقُواْۚ ذَٰلِكُمۡ حُكۡمُ ٱللَّهِۖ يَحۡكُمُ بَيۡنَكُمۡۚ وَٱللَّهُ عَلِيمٌ حَكِيمٞ ﴿١٠﴾

១១-ហើយប្រសិនបើអ្វីមួយ(ខាន់ស្លា)អំពីភរិយារបស់ពួកអ្នកដែលវិលត្រឡប់ទៅរកភាពគ្មានជំនឿបានបាត់បង់ពីពួកអ្នក(មិនផ្តល់ឱ្យពួកអ្នកវិញ) ក្រោយមកពួកអ្នកបានច្បាំងឈ្នះ(និងទទួលបានជ័យភណ្ឌពីពួកគ្មានជំនឿ)នោះ គឺពួកអ្នកត្រូវតែផ្តល់(នូវជ័យ-ភណ្ឌនោះ)ឱ្យបណ្តាអ្នកដែលភរិយារបស់ពួកគេទៅរកភាពគ្មានជំនឿវិញស្មើនឹងអ្វីដែលពួកគេបានចំណាយ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះក្នុងនាមពួកអ្នកជាអ្នកដែលមានជំនឿលើទ្រង់។

وَإِن فَاتَكُمۡ شَيۡءٞ مِّنۡ أَزۡوَٰجِكُمۡ إِلَى ٱلۡكُفَّارِ فَعَاقَبۡتُمۡ فَـَٔاتُواْ ٱلَّذِينَ ذَهَبَتۡ أَزۡوَٰجُهُم مِّثۡلَ مَآ أَنفَقُواْۚ وَٱتَّقُواْ ٱللَّهَ ٱلَّذِيٓ أَنتُم بِهِۦ مُؤۡمِنُونَ ﴿١١﴾

១២-ឱណាពី(មូហាំម៉ាត់)! ប្រសិនបើបណ្តាស្ត្រីដែលមានជំនឿធ្វើដំណើរមកកាន់អ្នក ដោយពួកនាងបានប្តេជ្ញាចិត្តជាមួយអ្នកថា ពួកនាងនឹងមិនធ្វើស្ហ៊ីរិកនឹងអល់ឡោះឡើយ ហើយពួកនាងមិនលួចនិងមិនធ្វើហ្ស៊ីណា និងមិនសម្លាប់កូនចៅរបស់ពួកនាង ហើយនិងមិននាំមកនូវរឿងមួលបង្កាច់ណាមួយដែលពួកនាងប្រឌិតឡើងនៅរវាងជើងទាំងពីរនិងដៃទាំងពីររបស់ពួកនាង ប្រមទាំងពួកនាងមិនជំទាស់នឹងអ្នកនូវរាល់ប្រការដែលល្អនោះ ចូរអ្នកទទួលយកនូវការប្តេជ្ញាចិត្តរបស់ពួកនាងចុះ ហើយចូរអ្នកសុំពីអល់ឡោះឱ្យអភ័យទោសដល់ពួកនាង។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

يَٰٓأَيُّهَا ٱلنَّبِيُّ إِذَا جَآءَكَ ٱلۡمُؤۡمِنَٰتُ يُبَايِعۡنَكَ عَلَىٰٓ أَن لَّا يُشۡرِكۡنَ بِٱللَّهِ شَيۡـٔٗا وَلَا يَسۡرِقۡنَ وَلَا يَزۡنِينَ وَلَا يَقۡتُلۡنَ أَوۡلَٰدَهُنَّ وَلَا يَأۡتِينَ بِبُهۡتَٰنٖ يَفۡتَرِينَهُۥ بَيۡنَ أَيۡدِيهِنَّ وَأَرۡجُلِهِنَّ وَلَا يَعۡصِينَكَ فِي مَعۡرُوفٖ فَبَايِعۡهُنَّ وَٱسۡتَغۡفِرۡ لَهُنَّ ٱللَّهَۖ إِنَّ ٱللَّهَ غَفُورٞ رَّحِيمٞ ﴿١٢﴾

១៣-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកកុំយកក្រុមដែលអល់ឡោះខឹងសម្បាចំពោះពួកគេធ្វើជាមិត្តភក្តិឱ្យសោះ។ ជាការពិតណាស់ ពួកគេអស់សង្ឃឹម(ចំពោះផលបុណ្យរបស់អល់ឡោះ)

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَتَوَلَّوۡاْ قَوۡمًا غَضِبَ ٱللَّهُ عَلَيۡهِمۡ قَدۡ يَئِسُواْ مِنَ ٱلۡأٓخِرَةِ كَمَا يَئِسَ

ٱلْكُفَّارُ مِنْ أَصْحَٰبِ ٱلْقُبُورِ ﴿١٣﴾

នៅថ្ងៃបរលោក ដូចជាពួកដែលគ្មានជំនឿអស់សង្ឃឹមចំពោះបណ្ដាអ្នកដែលនៅក្នុងផ្នូរ(ថាពួកគេមិនត្រូវបានអល់ឡោះធ្វើឱ្យរស់ឡើងវិញឡើយ)។

## سورة الصف

## ជំពូក អាស់ស្ហ្វ

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

سَبَّحَ لِلَّهِ مَا فِى ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ ۖ وَهُوَ ٱلْعَزِيزُ ٱلْحَكِيمُ ﴿١﴾

១-អ្វីៗនៅលើមេឃជាច្រើនជាន់និងអ្វីៗនៅលើផែនដីបានលើកតម្កើងអល់ឡោះ។ ហើយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ لِمَ تَقُولُونَ مَا لَا تَفْعَلُونَ ﴿٢﴾

២-ឱបណ្ដាអ្នកដែលមានជំនឿ! ហេតុអ្វីបានជាពួកអ្នកនិយាយនូវអ្វីដែលពួកអ្នកមិនធ្វើ?

كَبُرَ مَقْتًا عِندَ ٱللَّهِ أَن تَقُولُوا۟ مَا لَا تَفْعَلُونَ ﴿٣﴾

៣-អល់ឡោះស្អប់ខ្ពើមបំផុតនូវអ្វីដែលពួកអ្នកនិយាយ ហើយពួកអ្នកមិនធ្វើ។

إِنَّ ٱللَّهَ يُحِبُّ ٱلَّذِينَ يُقَٰتِلُونَ فِى سَبِيلِهِۦ صَفًّا كَأَنَّهُم بُنْيَٰنٌ مَّرْصُوصٌ ﴿٤﴾

៤-ពិតប្រាកដណាស់ អល់ឡោះស្រឡាញ់បណ្ដាអ្នកដែលប្រយុទ្ធតស៊ូក្នុងមាគ៌ារបស់ទ្រង់ ដោយតំរៀបគ្នាជាជួរប្រៀបដូចជាសំណង់ដ៏រឹងមាំ។

وَإِذْ قَالَ مُوسَىٰ لِقَوْمِهِۦ يَٰقَوْمِ لِمَ تُؤْذُونَنِى وَقَد تَّعْلَمُونَ أَنِّى رَسُولُ ٱللَّهِ إِلَيْكُمْ ۖ فَلَمَّا زَاغُوٓا۟ أَزَاغَ ٱللَّهُ قُلُوبَهُمْ ۚ وَٱللَّهُ لَا يَهْدِى ٱلْقَوْمَ ٱلْفَٰسِقِينَ ﴿٥﴾

៥-ហើយ(ចូរចងចាំ)នៅពេលដែលមូសានិយាយទៅកាន់ក្រុមរបស់គាត់ថាៈ ឱក្រុមរបស់ខ្ញុំ! ហេតុអ្វីបានជាពួកអ្នកធ្វើបាបខ្ញុំ ខណៈដែលពួកអ្នកដឹងច្បាស់ថា ខ្ញុំពិតជាអ្នកនាំសាររបស់អល់ឡោះមកកាន់ពួកអ្នកនោះ? ហើយនៅពេលដែលពួកគេគេចចេញ(ពីមាគ៌ាអល់ឡោះ) អល់ឡោះក៏បានធ្វើឱ្យចិត្តរបស់ពួកគេកាន់តែឃ្លាតឆ្ងាយ(ពីមាគ៌ាអល់ឡោះ)ទៅទៀត។ ហើយអល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលល្មើសនឹងបទបញ្ជារបស់ទ្រង់ឡើយ។

وَإِذْ قَالَ عِيسَى ٱبْنُ مَرْيَمَ يَٰبَنِىٓ إِسْرَٰٓءِيلَ إِنِّى رَسُولُ ٱللَّهِ إِلَيْكُم مُّصَدِّقًا لِّمَا بَيْنَ يَدَىَّ مِنَ ٱلتَّوْرَىٰةِ وَمُبَشِّرًۢا بِرَسُولٍ يَأْتِى مِنۢ بَعْدِى ٱسْمُهُۥٓ أَحْمَدُ ۖ فَلَمَّا جَآءَهُم بِٱلْبَيِّنَٰتِ قَالُوا۟

៦-ហើយ(ចូរចងចាំ)នៅពេលដែលអ៊ីសាកូនម៉ារយ៉ាំបានពោលថាៈ ឱអំបូរអ៊ីស្រាអែល! ពិតប្រាកដណាស់ ខ្ញុំជាអ្នកនាំសាររបស់អល់ឡោះមកកាន់ពួកអ្នក ដោយបញ្ជាក់អំពីអ្វីៗដែលមានមុនខ្ញុំនៅក្នុងគម្ពីរតាវរ៉ត និងផ្ដល់ដំណឹងរីករាយដល់ពួកអ្នកអំពីអ្នកនាំសារម្នាក់ដែលនឹងមកដល់បន្ទាប់ពីខ្ញុំដែលគេមានឈ្មោះថា អះម៉ាត់

هَٰذَا سِحۡرٞ مُّبِينٞ ۝٦

(មូហាំម៉ាត់) ។ ប៉ុន្តែនៅពេលដែលគាត់បានមកដល់ពួកគេជាមួយនឹងភស្តុតាងដ៏ច្បាស់លាស់ជាច្រើននោះ ពួកគេបែរជានិយាយថាៈ នេះជាមន្តអាគមយ៉ាងច្បាស់លាស់ ។

وَمَنۡ أَظۡلَمُ مِمَّنِ ٱفۡتَرَىٰ عَلَى ٱللَّهِ ٱلۡكَذِبَ وَهُوَ يُدۡعَىٰٓ إِلَى ٱلۡإِسۡلَٰمِۚ وَٱللَّهُ لَا يَهۡدِي ٱلۡقَوۡمَ ٱلظَّٰلِمِينَ ۝٧

៧-តើមាននរណាដែលបំពានជាងអ្នកដែលប្រឌិតពាក្យភូតកុហកលើអល់ឡោះ ខណៈដែលគេអំពាវនាវឱ្យទៅកាន់សាសនាអ៊ីស្លាមនោះ? ហើយអល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលបំពានឡើយ ។

يُرِيدُونَ لِيُطۡفِـُٔواْ نُورَ ٱللَّهِ بِأَفۡوَٰهِهِمۡ وَٱللَّهُ مُتِمُّ نُورِهِۦ وَلَوۡ كَرِهَ ٱلۡكَٰفِرُونَ ۝٨

៨-ពួកគេចង់ពន្លត់នូវពន្លឺរបស់អល់ឡោះ(សាសនាអ៊ីស្លាម) ដោយសំដីរបស់ពួកគេ ។ ប៉ុន្តែអល់ឡោះនៅតែធ្វើឱ្យពន្លឺរបស់ទ្រង់ពេញបរិបូរណ៍ ទោះបីពួកគ្មានជំនឿស្អប់ខ្ពើមក៏ដោយ ។

هُوَ ٱلَّذِيٓ أَرۡسَلَ رَسُولَهُۥ بِٱلۡهُدَىٰ وَدِينِ ٱلۡحَقِّ لِيُظۡهِرَهُۥ عَلَى ٱلدِّينِ كُلِّهِۦ وَلَوۡ كَرِهَ ٱلۡمُشۡرِكُونَ ۝٩

៩-ទ្រង់គឺជាអ្នកដែលបានបញ្ជូនអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់)ជាមួយនឹងការចង្អុលបង្ហាញ ហើយនិងសាសនាដ៏ត្រឹមត្រូវ ដើម្បីស្តែងឱ្យលេចធ្លោជាងសាសនាផ្សេងៗ ទោះបីជាពួកមូស្ហរីគីនស្អប់ខ្ពើមក៏ដោយ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ هَلۡ أَدُلُّكُمۡ عَلَىٰ تِجَٰرَةٖ تُنجِيكُم مِّنۡ عَذَابٍ أَلِيمٖ ۝١٠

១០-ឱបណ្ដាអ្នកដែលមានជំនឿ! តើពួកអ្នកចង់ឱ្យខ្ញុំប្រាប់ពួកអ្នកអំពីជំនួញមួយដែលអាចជួយពួកអ្នកឱ្យគេចផុតពីទារុណកម្មដ៏សែនឈឺចាប់ដែរឬទេ?

تُؤۡمِنُونَ بِٱللَّهِ وَرَسُولِهِۦ وَتُجَٰهِدُونَ فِي سَبِيلِ ٱللَّهِ بِأَمۡوَٰلِكُمۡ وَأَنفُسِكُمۡۚ ذَٰلِكُمۡ خَيۡرٞ لَّكُمۡ إِن كُنتُمۡ تَعۡلَمُونَ ۝١١

១១-(ជំនួញនោះគឺ)ពួកអ្នកត្រូវមានជំនឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់) ហើយនិងតស៊ូក្នុងមាគ៌ារបស់អល់ឡោះដោយទ្រព្យសម្បត្តិ និងខ្លួនប្រាណរបស់ពួកអ្នកផ្ទាល់ ។ នោះគឺជាការប្រសើរបំផុតសម្រាប់ពួកអ្នក ប្រសិនបើពួកអ្នកដឹង ។

يَغۡفِرۡ لَكُمۡ ذُنُوبَكُمۡ وَيُدۡخِلۡكُمۡ جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ وَمَسَٰكِنَ طَيِّبَةٗ فِي جَنَّٰتِ عَدۡنٖۚ ذَٰلِكَ ٱلۡفَوۡزُ ٱلۡعَظِيمُ ۝١٢

១២-(ធ្វើដូច្នេះ)ទ្រង់នឹងអភ័យទោសដល់ពួកអ្នកចំពោះបាបកម្មទាំងឡាយរបស់ពួកអ្នក ហើយទ្រង់នឹងបញ្ចូលពួកអ្នកទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ព្រមទាំងមានកន្លែងជាទីមនោរម្យនៅក្នុងឋានសួគ៌អាត់និន ។ នោះគឺជាជោគជ័យមួយដ៏ធំធេង ។

وَأُخۡرَىٰ تُحِبُّونَهَاۖ نَصۡرٞ مِّنَ ٱللَّهِ وَفَتۡحٞ قَرِيبٞۗ

១៣-ហើយ(ទ្រង់នឹងផ្តល់ឱ្យ)អ្វីៗផ្សេងទៀតដែលពួកអ្នកស្រឡាញ់ពេញចិត្តនឹងវា ។ (វានោះ)គឺជាជំនួយពីអល់ឡោះ និង

وَبَشِّرِ ٱلْمُؤْمِنِينَ ﴿١٣﴾

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ كُونُوٓاْ أَنصَارَ ٱللَّهِ كَمَا
قَالَ عِيسَى ٱبْنُ مَرْيَمَ لِلْحَوَارِيِّـۧنَ مَنْ
أَنصَارِىٓ إِلَى ٱللَّهِ ۖ قَالَ ٱلْحَوَارِيُّونَ نَحْنُ
أَنصَارُ ٱللَّهِ ۖ فَـَٔامَنَت طَّآئِفَةٌ مِّنۢ بَنِىٓ
إِسْرَٰٓءِيلَ وَكَفَرَت طَّآئِفَةٌ ۖ فَأَيَّدْنَا ٱلَّذِينَ
ءَامَنُواْ عَلَىٰ عَدُوِّهِمْ فَأَصْبَحُواْ ظَٰهِرِينَ ﴿١٤﴾

## سورة الجمعة

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

يُسَبِّحُ لِلَّهِ مَا فِى ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ
ٱلْمَلِكِ ٱلْقُدُّوسِ ٱلْعَزِيزِ ٱلْحَكِيمِ ﴿١﴾

هُوَ ٱلَّذِى بَعَثَ فِى ٱلْأُمِّيِّـۧنَ رَسُولًا مِّنْهُمْ
يَتْلُواْ عَلَيْهِمْ ءَايَٰتِهِۦ وَيُزَكِّيهِمْ وَيُعَلِّمُهُمُ
ٱلْكِتَٰبَ وَٱلْحِكْمَةَ وَإِن كَانُواْ مِن قَبْلُ لَفِى
ضَلَٰلٍ مُّبِينٍ ﴿٢﴾

وَءَاخَرِينَ مِنْهُمْ لَمَّا يَلْحَقُواْ بِهِمْ ۚ وَهُوَ ٱلْعَزِيزُ
ٱلْحَكِيمُ ﴿٣﴾

ذَٰلِكَ فَضْلُ ٱللَّهِ يُؤْتِيهِ مَن يَشَآءُ ۚ وَٱللَّهُ ذُو
ٱلْفَضْلِ ٱلْعَظِيمِ ﴿٤﴾

ជ័យជំនះក្នុងពេលដ៏ខ្លីខាងមុខ។ ហើយចូរអ្នកផ្តល់ដំណឹងរីករាយដល់បណ្តាអ្នកដែលមានជំនឿចុះ។

១៤-ឱបណ្តាអ្នកដែលមានជំនឿ! ចូរពួកអ្នកជួយ(សាសនា) អល់ឡោះ ដូចជាអ៊ីសាកូនម៉ារយ៉ាំបានពោលទៅកាន់អ្នកស្តាប់ឱវាទរបស់គាត់ថាៈ តើអ្នកណាខ្លះចូលរួមជាមួយខ្ញុំដើម្បីលើកស្ទួយ(សាសនា) អល់ឡោះនោះ? បណ្តាអ្នកស្តាប់ឱវាទបានឆ្លើយថាៈ ពួកយើងគឺជាអ្នកចូលរួមលើកស្ទួយ(សាសនា) អល់ឡោះ។ ពេលនោះអំបូរអ៊ីស្រាអែលមួយក្រុមមានជំនឿ និងមួយក្រុមទៀតគ្មានជំនឿ។ ហើយយើងបានជួយបណ្តាអ្នកដែលមានជំនឿឱ្យមានកម្លាំងខ្លាំងក្លាជាងពួកសត្រូវរបស់ពួកគេ ហើយពួកគេក៏បានក្លាយជាអ្នកដែលទទួលបានជ័យជំនះ។

## ជំពូកអាល់ជូមូអះ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-អ្វីៗដែលនៅលើមេឃជាច្រើនជាន់ និងអ្វីៗដែលនៅលើផែនដីលើកតម្កើងអល់ឡោះ ដែលជាស្តេចដ៏មហាជ្រះស្អាត មហាខ្លាំងពូកែ មហាគតិបណ្ឌិត។

២-ទ្រង់គឺជាអ្នកដែលបានចាត់តាំងអ្នកនាំសារម្នាក់អំពីពួកគេក្នុងចំណោមពួកអវិជ្ជា ដោយគាត់សូត្រអាយ៉ាត់ៗរបស់ទ្រង់ឱ្យពួកគេស្តាប់និងសំអាតពួកគេ(អំពីប្រការស្ទឹរិក) ព្រមទាំងបង្រៀនគម្ពីរគួរអាន និងស៊ុណ្ណះដល់ពួកគេ ខណៈដែលពួកគេកាលពីមុនស្ថិតនៅក្នុងភាពវង្វេងយ៉ាងច្បាស់លាស់នោះ។

៣-ហើយ(ទ្រង់ក៏បានបញ្ជូនអ្នកនាំសារទៅកាន់)ក្រុមផ្សេងទៀតក្នុងចំណោមពួកគេ ដែលពួកទាំងនោះមិនទាន់បានជួបពួកគេ (ពួកមូស្លីម)ឡើយ។ ហើយទ្រង់មហាខ្លាំងពូកែ មហាគតិបណ្ឌិត។

៤-នោះគឺជាការប្រោសប្រទានរបស់អល់ឡោះ ដែលទ្រង់ប្រទានឱ្យអ្នកណាដែលទ្រង់មានចេតនា។ ហើយអល់ឡោះមានការប្រោសប្រទានដ៏ធំធេង។

مَثَلُ ٱلَّذِينَ حُمِّلُواْ ٱلتَّوۡرَىٰةَ ثُمَّ لَمۡ يَحۡمِلُوهَا كَمَثَلِ ٱلۡحِمَارِ يَحۡمِلُ أَسۡفَارَۢاۚ بِئۡسَ مَثَلُ ٱلۡقَوۡمِ ٱلَّذِينَ كَذَّبُواْ بِـَٔايَٰتِ ٱللَّهِۚ وَٱللَّهُ لَا يَهۡدِي ٱلۡقَوۡمَ ٱلظَّٰلِمِينَ ٥

៥-ការប្រៀបធៀបពួកដែលត្រូវបានគេដាក់បញ្ជាឱ្យអនុវត្តតាមគម្ពីរតាវរ៉ត បន្ទាប់មកពួកគេមិនអនុវត្តតាមវាគឺប្រៀបដូចជាសត្វលាដែលដឹកគម្ពីរទាំងឡាយ(តែមិនបានដឹងពីអត្ថន័យរបស់វា)។ ការប្រៀបធៀបក្រុមដែលបានបដិសេធនឹងអាយ៉ាត់ៗរបស់អល់ឡោះនោះ គឺអាក្រក់បំផុត។ ហើយអល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលបំពានឡើយ។

قُلۡ يَٰٓأَيُّهَا ٱلَّذِينَ هَادُوٓاْ إِن زَعَمۡتُمۡ أَنَّكُمۡ أَوۡلِيَآءُ لِلَّهِ مِن دُونِ ٱلنَّاسِ فَتَمَنَّوُاْ ٱلۡمَوۡتَ إِن كُنتُمۡ صَٰدِقِينَ ٦

៦-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ឱពួកយ៉ាហ៊ូទី! ប្រសិនបើពួកអ្នកអះអាងថា ពួកអ្នកជាសម្លាញ់របស់អល់ឡោះ គ្មានមនុស្សណាផ្សេង(ពីពួកអ្នក)ទេនោះ ចូរពួកអ្នកប្រាថ្នាចង់ស្លាប់មើល ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតមែននោះ។

وَلَا يَتَمَنَّوۡنَهُۥٓ أَبَدَۢا بِمَا قَدَّمَتۡ أَيۡدِيهِمۡۚ وَٱللَّهُ عَلِيمُۢ بِٱلظَّٰلِمِينَ ٧

៧-ប៉ុន្តែពួកគេមិនប្រាថ្នាចង់ស្លាប់ជាដាច់ខាតដោយសារតែអ្វីដែលពួកគេបានប្រព្រឹត្តកន្លងមក។ ហើយអល់ឡោះដឹងបំផុតចំពោះពួកដែលបំពាន។

قُلۡ إِنَّ ٱلۡمَوۡتَ ٱلَّذِي تَفِرُّونَ مِنۡهُ فَإِنَّهُۥ مُلَٰقِيكُمۡۖ ثُمَّ تُرَدُّونَ إِلَىٰ عَٰلِمِ ٱلۡغَيۡبِ وَٱلشَّهَٰدَةِ فَيُنَبِّئُكُم بِمَا كُنتُمۡ تَعۡمَلُونَ ٨

៨-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ពិតប្រាកដណាស់ សេចក្តីស្លាប់ដែលពួកអ្នកខំគេចពីវា គឺវាពិតជានឹងជួបពួកអ្នកជាមិនខាន។ បន្ទាប់មកគេនឹងឱ្យពួកអ្នកវិលត្រឡប់ទៅកាន់ម្ចាស់ដែលដឹងនូវភាពអាថ៌កំបាំងនិងភាពលាតត្រដាង។ ហើយទ្រង់នឹងប្រាប់ពួកអ្នកនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្តជាមិនខាន។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا نُودِيَ لِلصَّلَوٰةِ مِن يَوۡمِ ٱلۡجُمُعَةِ فَٱسۡعَوۡاْ إِلَىٰ ذِكۡرِ ٱللَّهِ وَذَرُواْ ٱلۡبَيۡعَۚ ذَٰلِكُمۡ خَيۡرٞ لَّكُمۡ إِن كُنتُمۡ تَعۡلَمُونَ ٩

៩-ឱបណ្តាអ្នកដែលមានជំនឿ! នៅពេលមានគេអំពាវនាវពួកអ្នកឱ្យទៅសឡាតនៅថ្ងៃសុក្រ ចូរពួកអ្នករួសរាន់ទៅរកការរំលឹកចំពោះអល់ឡោះ ហើយចូរពួកអ្នកបោះបង់ចោលនូវការលក់ដូរ។ នោះគឺជាការប្រសើរបំផុតសម្រាប់ពួកអ្នក ប្រសិនបើពួកអ្នកបានដឹង។

فَإِذَا قُضِيَتِ ٱلصَّلَوٰةُ فَٱنتَشِرُواْ فِي ٱلۡأَرۡضِ وَٱبۡتَغُواْ مِن فَضۡلِ ٱللَّهِ وَٱذۡكُرُواْ ٱللَّهَ كَثِيرٗا لَّعَلَّكُمۡ تُفۡلِحُونَ ١٠

១០-ហើយនៅពេលដែលសឡាតរួចរាល់ ចូរពួកអ្នកបំបែកគ្នានៅលើផែនដី និងត្រូវស្វែងរកលាភសក្ការៈរបស់អល់ឡោះ។ ហើយចូរពួកអ្នករំលឹកទៅចំពោះអល់ឡោះឱ្យបានច្រើន សង្ឃឹមថាពួកអ្នកនឹងទទួលបានជោគជ័យ។

وَإِذَا رَأَوۡاْ تِجَٰرَةً أَوۡ لَهۡوًا ٱنفَضُّوٓاْ إِلَيۡهَا وَتَرَكُوكَ قَآئِمٗاۚ قُلۡ مَا عِندَ ٱللَّهِ خَيۡرٞ مِّنَ ٱللَّهۡوِ وَمِنَ ٱلتِّجَٰرَةِۚ وَٱللَّهُ خَيۡرُ ٱلرَّٰزِقِينَ ١١

១១-ហើយនៅពេលដែលពួកគេបានឃើញការជួញដូរ ឬការលេងសប្បាយ ពួកគេបានបំបែកគ្នាទៅរកវា ដោយពួកគេបោះបង់ចោលអ្នក(មូហាំម៉ាត់)ឱ្យនៅឈរ(សូត្រខុតហ្ពះ)តែម្នាក់ឯង។ ចូរអ្នកពោលថាៈ អ្វីដែលនៅជាមួយអល់ឡោះគឺប្រសើរជាងការលេងសប្បាយ និងជំនួញទៅទៀត។ ហើយអល់ឡោះជាអ្នកផ្ដល់លាភសក្ការៈដ៏ប្រសើរបំផុត។

## سورة المنافقون

## ជំពូកអាល់មូណាហ្វ៊ីគូន

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

إِذَا جَآءَكَ ٱلۡمُنَٰفِقُونَ قَالُواْ نَشۡهَدُ إِنَّكَ لَرَسُولُ ٱللَّهِۗ وَٱللَّهُ يَعۡلَمُ إِنَّكَ لَرَسُولُهُۥ وَٱللَّهُ يَشۡهَدُ إِنَّ ٱلۡمُنَٰفِقِينَ لَكَٰذِبُونَ ١

១-នៅពេលដែលពួកពុតត្បុតបានមកជួបអ្នក(មូហាំម៉ាត់) ពួកគេបាននិយាយថាៈ ពួកយើងធ្វើជាសាក្សីថា ពិតប្រាកដណាស់ អ្នកគឺជាអ្នកនាំសាររបស់អល់ឡោះ។ តែអល់ឡោះដឹងថា អ្នកពិតជាអ្នកនាំសាររបស់ទ្រង់ ហើយអល់ឡោះក៏ដឹងដែរថា ពិតប្រាកដណាស់ ពួកពុតត្បុតគឺជាពួកភូតកុហក។

ٱتَّخَذُوٓاْ أَيۡمَٰنَهُمۡ جُنَّةٗ فَصَدُّواْ عَن سَبِيلِ ٱللَّهِۚ إِنَّهُمۡ سَآءَ مَا كَانُواْ يَعۡمَلُونَ ٢

២-ពួកគេ(ពួកពុតត្បុត)បានយកការស្បថបំពានរបស់ពួកគេធ្វើជាខែល(ដើម្បីការពារខ្លួន ទ្រព្យសម្បត្តិ និងកូនចៅរបស់ពួកគេ) ហើយពួកគេបានរារាំងអ្នកដទៃពីមាគ៌ារបស់អល់ឡោះ។ ពិតប្រាកដណាស់ អ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តគឺវាអាក្រក់បំផុត។

ذَٰلِكَ بِأَنَّهُمۡ ءَامَنُواْ ثُمَّ كَفَرُواْ فَطُبِعَ عَلَىٰ قُلُوبِهِمۡ فَهُمۡ لَا يَفۡقَهُونَ ٣

៣-នោះគឺដោយសារតែពួកគេមានជំនឿ បន្ទាប់មកពួកគេបានប្រឆាំងវិញ។ ដូច្នេះហើយ គេបានបោះត្រាភ្ជិតលើដួងចិត្តរបស់ពួកគេ ហើយពួកគេមិនអាចស្វែងយល់បានឡើយ។

۞ وَإِذَا رَأَيۡتَهُمۡ تُعۡجِبُكَ أَجۡسَامُهُمۡۖ وَإِن يَقُولُواْ تَسۡمَعۡ لِقَوۡلِهِمۡۖ كَأَنَّهُمۡ خُشُبٞ مُّسَنَّدَةٞۖ يَحۡسَبُونَ كُلَّ صَيۡحَةٍ عَلَيۡهِمۡۚ هُمُ ٱلۡعَدُوُّ فَٱحۡذَرۡهُمۡۚ قَٰتَلَهُمُ ٱللَّهُۖ أَنَّىٰ يُؤۡفَكُونَ ٤

៤-ហើយនៅពេលដែលអ្នកឃើញពួកគេ គឺទិដ្ឋភាពរបស់ពួកគេធ្វើឱ្យអ្នកពេញចិត្ត ហើយនៅពេលពួកគេនិយាយ អ្នកនឹងស្ដាប់សំដីពួកគេ។ ពួកគេប្រៀបដូចជាដុំឈើដែលគេផ្អែកចោលប៉ុណ្ណោះ(មិនយល់អ្វីឡើយ)។ ពួកគេគិតថា គ្រប់សំឡេងស្រែកទាំងឡាយគឺសំដៅទៅលើពួកគេ។ ពួកគេជាសត្រូវ(នឹងអ្នក) ដូច្នេះចូរអ្នកប្រុងប្រយ័ត្នចំពោះពួកគេ។ អល់ឡោះនឹងដាក់បណ្ដាសាពួកគេ។ តើពួកគេអាចគេចចេញពីការពិតបានដូចម្ដេចទៅ?

وَإِذَا قِيلَ لَهُمۡ تَعَالَوۡاْ يَسۡتَغۡفِرۡ لَكُمۡ رَسُولُ ٱللَّهِ
لَوَّوۡاْ رُءُوسَهُمۡ وَرَأَيۡتَهُمۡ يَصُدُّونَ وَهُم
مُّسۡتَكۡبِرُونَ ﴿٥﴾

៥-ហើយនៅពេលមានគេនិយាយទៅកាន់ពួកគេ(ពួកពុតត្បុត) ថា: ចូរពួកអ្នកនាំគ្នាមក អ្នកនាំសាររបស់អល់ឡោះ(មូហាំម៉ាត់) នឹងសុំអភ័យទោសឱ្យពួកអ្នក ពួកគេបែរជាគ្រវីក្បាលរបស់ពួកគេទៅវិញ ។ ហើយអ្នក(មូហាំម៉ាត់) នឹងបានឃើញពួកគេងាកចេញពីអ្នក ដោយពួកគេក្រអឺតក្រទមបំផុត ។

سَوَآءٌ عَلَيۡهِمۡ أَسۡتَغۡفَرۡتَ لَهُمۡ أَمۡ لَمۡ تَسۡتَغۡفِرۡ
لَهُمۡ لَن يَغۡفِرَ ٱللَّهُ لَهُمۡۚ إِنَّ ٱللَّهَ لَا يَهۡدِي ٱلۡقَوۡمَ
ٱلۡفَٰسِقِينَ ﴿٦﴾

៦-វាដូចតែគ្នាទេចំពោះពួកគេទោះបីជាអ្នកបានសុំអភ័យទោសឱ្យពួកគេឬមិនបានសុំអភ័យទោសឱ្យពួកគេក៏ដោយ ក៏អល់ឡោះមិនអភ័យទោសឱ្យពួកគេដែរ ។ ពិតប្រាកដណាស់ អល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលល្មើសនឹងបទបញ្ជារបស់អល់ឡោះឡើយ ។

هُمُ ٱلَّذِينَ يَقُولُونَ لَا تُنفِقُواْ عَلَىٰ مَنۡ عِندَ
رَسُولِ ٱللَّهِ حَتَّىٰ يَنفَضُّواْۗ وَلِلَّهِ خَزَآئِنُ
ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَلَٰكِنَّ ٱلۡمُنَٰفِقِينَ لَا
يَفۡقَهُونَ ﴿٧﴾

៧-ពួកគេ(ពួកពុតត្បុត) គឺជាពួកដែលនិយាយ(ទៅកាន់អ្នកដែលរស់នៅម៉ាឌីណះ) ថា: ចូរពួកអ្នកកុំចំណាយទ្រព្យសម្បត្តិទៅលើអ្នកណាដែលនៅជាមួយអ្នកនាំសាររបស់អល់ឡោះឱ្យសោះ លុះត្រាតែពួកគេចាកចេញពីគេសិន ។ ហើយឃ្លាំងទ្រព្យសម្បត្តិនៅលើមេឃជាច្រើនជាន់ និងផែនដីជាកម្មសិទ្ធិរបស់អល់ឡោះ ប៉ុន្តែពួកពុតត្បុតមិនស្វែងយល់ឡើយ ។

يَقُولُونَ لَئِن رَّجَعۡنَآ إِلَى ٱلۡمَدِينَةِ
لَيُخۡرِجَنَّ ٱلۡأَعَزُّ مِنۡهَا ٱلۡأَذَلَّۚ وَلِلَّهِ ٱلۡعِزَّةُ
وَلِرَسُولِهِۦ وَلِلۡمُؤۡمِنِينَ وَلَٰكِنَّ
ٱلۡمُنَٰفِقِينَ لَا يَعۡلَمُونَ ﴿٨﴾

៨-ពួកគេ(ពុតត្បុត) និយាយថា: ប្រសិនបើពួកយើងបានវិលទៅកាន់ម៉ាឌីណះវិញ អ្នកខ្លាំងពិតជានឹងបណ្តេញអ្នកទន់ខ្សោយចេញពីទីនោះ ខណៈដែលភាពខ្លាំងពូកែជាកម្មសិទ្ធិរបស់អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ ព្រមទាំងជាកម្មសិទ្ធិរបស់បណ្តាអ្នកដែលមានជំនឿប៉ុណ្ណោះ ។ ប៉ុន្តែពួកពុតត្បុតមិនដឹងឡើយ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تُلۡهِكُمۡ أَمۡوَٰلُكُمۡ وَلَآ
أَوۡلَٰدُكُمۡ عَن ذِكۡرِ ٱللَّهِۚ وَمَن يَفۡعَلۡ
ذَٰلِكَ فَأُوْلَٰٓئِكَ هُمُ ٱلۡخَٰسِرُونَ ﴿٩﴾

៩-ឱបណ្តាអ្នកដែលមានជំនឿ! ចូរកុំឱ្យទ្រព្យសម្បត្តិរបស់ពួកអ្នក និងកូនចៅរបស់ពួកអ្នកធ្វើឱ្យពួកអ្នកងប់ងុលឃ្លាតឆ្ងាយពីការរំលឹកទៅចំពោះអល់ឡោះឱ្យសោះ ។ ហើយអ្នកណាដែលធ្វើដូច្នោះ អ្នកទាំងនោះគឺជាអ្នកដែលខាតបង់ ។

وَأَنفِقُواْ مِن مَّا رَزَقۡنَٰكُم مِّن قَبۡلِ أَن يَأۡتِيَ
أَحَدَكُمُ ٱلۡمَوۡتُ فَيَقُولَ رَبِّ لَوۡلَآ أَخَّرۡتَنِيٓ
إِلَىٰٓ أَجَلٖ قَرِيبٖ فَأَصَّدَّقَ وَأَكُن مِّنَ

១០-ហើយចូរពួកអ្នកបរិច្ចាគមួយចំនួនអំពីលាភសក្ការៈដែលយើងបានផ្តល់ឱ្យពួកអ្នកមុននឹងសេចក្តីស្លាប់មកដល់អ្នកណាម្នាក់ក្នុងចំណោមពួកអ្នក ដែលជាហេតុធ្វើឱ្យគេនឹងនិយាយថា: ឱម្ចាស់របស់ខ្ញុំ! ប្រសិនបើទ្រង់ពន្យារពេលឱ្យខ្ញុំបន្តិចទៀតនោះ ខ្ញុំពិតជា

ٱلصَّـٰلِحِينَ ﴿١٠﴾

បរិច្ចាគទាន ហើយខ្ញុំនឹងស្ថិតក្នុងចំណោមអ្នកដែលសាងអំពើល្អត្រឹមត្រូវជាមិនខាន។

وَلَن يُؤَخِّرَ ٱللَّهُ نَفْسًا إِذَا جَآءَ أَجَلُهَا ۚ وَٱللَّهُ خَبِيرٌۢ بِمَا تَعْمَلُونَ ﴿١١﴾

១១-ហើយអល់ឡោះនឹងមិនពន្យារពេលឱ្យបុគ្គលណាម្នាក់ឡើយនៅពេលដែលសេចក្ដីស្លាប់បានមកដល់គេហើយនោះ។ ហើយអល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

## سورة التغابن

## ជំពូកអាត់តាហ្គាពូន

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

يُسَبِّحُ لِلَّهِ مَا فِى ٱلسَّمَـٰوَٰتِ وَمَا فِى ٱلْأَرْضِ ۖ لَهُ ٱلْمُلْكُ وَلَهُ ٱلْحَمْدُ ۖ وَهُوَ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ﴿١﴾

១-អ្វីដែលមាននៅលើមេឃជាច្រើនជាន់ និងអ្វីដែលមាននៅលើផែនដីលើកតម្កើងចំពោះអល់ឡោះ។ អំណាចគ្រប់គ្រងគឺជាកម្មសិទ្ធិរបស់ទ្រង់ ហើយរាល់ការសរសើរក៏ជាកម្មសិទ្ធិរបស់ទ្រង់ដែរ។ ហើយទ្រង់មានអានុភាពលើអ្វីៗទាំងអស់។

هُوَ ٱلَّذِى خَلَقَكُمْ فَمِنكُمْ كَافِرٌ وَمِنكُم مُّؤْمِنٌ ۚ وَٱللَّهُ بِمَا تَعْمَلُونَ بَصِيرٌ ﴿٢﴾

២-ទ្រង់ជាអ្នកដែលបានបង្កើតពួកអ្នក។ ហើយពួកអ្នកមួយចំនួនជាអ្នកគ្មានជំនឿ និងមួយចំនួនទៀតជាអ្នកមានជំនឿ។ ហើយអល់ឡោះឃើញបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

خَلَقَ ٱلسَّمَـٰوَٰتِ وَٱلْأَرْضَ بِٱلْحَقِّ وَصَوَّرَكُمْ فَأَحْسَنَ صُوَرَكُمْ ۖ وَإِلَيْهِ ٱلْمَصِيرُ ﴿٣﴾

៣-ទ្រង់បានបង្កើតមេឃជាច្រើនជាន់ និងផែនដីដោយពិតប្រាកដ ហើយទ្រង់បានបង្កើតរូបរាងពួកអ្នកនិងបានធ្វើឱ្យរូបរាងរបស់ពួកអ្នកល្អស្អាត។ ហើយចំពោះទ្រង់តែមួយគត់ដែលត្រូវវិលត្រឡប់។

يَعْلَمُ مَا فِى ٱلسَّمَـٰوَٰتِ وَٱلْأَرْضِ وَيَعْلَمُ مَا تُسِرُّونَ وَمَا تُعْلِنُونَ ۚ وَٱللَّهُ عَلِيمٌۢ بِذَاتِ ٱلصُّدُورِ ﴿٤﴾

៤-ទ្រង់ដឹងបំផុតនូវអ្វីដែលមាននៅលើមេឃជាច្រើនជាន់ និងនៅលើផែនដី។ ហើយទ្រង់ក៏ដឹងបំផុតនូវអ្វីដែលពួកអ្នកលាក់បាំង និងអ្វីដែលពួកអ្នកលាតត្រដាងដែរ។ ហើយអល់ឡោះដឹងបំផុតនូវអ្វីដែលមាននៅក្នុងចិត្ត។

أَلَمْ يَأْتِكُمْ نَبَؤُا۟ ٱلَّذِينَ كَفَرُوا۟ مِن قَبْلُ فَذَاقُوا۟ وَبَالَ أَمْرِهِمْ وَلَهُمْ عَذَابٌ أَلِيمٌ ﴿٥﴾

៥-តើដំណឹងរបស់ពួកដែលប្រឆាំងកាលពីមុនមិនបានមកដល់ពួកអ្នកទេឬ? ពួកគេបានភ្លក្សនូវលទ្ធផលចុងក្រោយដ៏អាក្រក់របស់ពួកគេ។ ហើយពួកគេនឹងទទួលទារុណកម្មដ៏សែនឈឺចាប់។

ذَٰلِكَ بِأَنَّهُۥ كَانَت تَّأْتِيهِمْ رُسُلُهُم بِٱلْبَيِّنَـٰتِ

៦-នោះគឺដោយសារតែបណ្ដាអ្នកនាំសាររបស់ពួកគេបាននាំភស្តុតាងដ៏ច្បាស់លាស់ជាច្រើនមកដល់ពួកគេ តែពួកគេបែរជា

فَقَالُوٓاْ أَبَشَرٞ يَهۡدُونَنَا فَكَفَرُواْ وَتَوَلَّواْۚ
وَّٱسۡتَغۡنَى ٱللَّهُۚ وَٱللَّهُ غَنِيٌّ حَمِيدٞ ٦

និយាយថាៈ គ្រាន់តែជាមនុស្សធម្មតាអាចចង្អុលបង្ហាញពួកយើងបានឬ? ហើយពួកគេក៏បានប្រឆាំង និងបានបែរចេញ(ពីការពិត) ។ ប៉ុន្តែអល់ឡោះមិនត្រូវការពួកគេឡើយ ។ ហើយអល់ឡោះមហាមានលើសលុប ជាទីកោតសរសើរបំផុត ។

زَعَمَ ٱلَّذِينَ كَفَرُوٓاْ أَن لَّن يُبۡعَثُواْۚ قُلۡ بَلَىٰ
وَرَبِّي لَتُبۡعَثُنَّ ثُمَّ لَتُنَبَّؤُنَّ بِمَا عَمِلۡتُمۡۚ وَذَٰلِكَ
عَلَى ٱللَّهِ يَسِيرٞ ٧

៧-ពួកដែលប្រឆាំងបានគិតថាៈ ពួកគេនឹងមិនត្រូវបានគេធ្វើឱ្យរស់ឡើងវិញឡើយ ។ ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ មិនមែនដូច្នោះទេ សូមស្បថនឹងម្ចាស់របស់ខ្ញុំ ពួកអ្នកពិតជានឹងត្រូវគេធ្វើឱ្យរស់ឡើងវិញ បន្ទាប់មកពួកអ្នកនឹងត្រូវគេប្រាប់ឱ្យដឹងនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត ។ ហើយទាំងនោះគឺជាការងាយស្រួលបំផុតចំពោះអល់ឡោះ ។

فَـَٔامِنُواْ بِٱللَّهِ وَرَسُولِهِۦ وَٱلنُّورِ ٱلَّذِيٓ أَنزَلۡنَاۚ
وَٱللَّهُ بِمَا تَعۡمَلُونَ خَبِيرٞ ٨

៨-ហើយចូរពួកអ្នក(ពួកមូស្ហ្គរីគីន)មានជំនឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់(មូហាំម៉ាត់) ហើយនិងពន្លឺ(គម្ពីរគួរអាន) ដែលយើងបានបញ្ចុះមក ។ ហើយអល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត ។

يَوۡمَ يَجۡمَعُكُمۡ لِيَوۡمِ ٱلۡجَمۡعِۖ ذَٰلِكَ يَوۡمُ
ٱلتَّغَابُنِۗ وَمَن يُؤۡمِنۢ بِٱللَّهِ وَيَعۡمَلۡ صَٰلِحٗا
يُكَفِّرۡ عَنۡهُ سَيِّـَٔاتِهِۦ وَيُدۡخِلۡهُ جَنَّٰتٖ تَجۡرِي
مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَآ أَبَدٗاۚ
ذَٰلِكَ ٱلۡفَوۡزُ ٱلۡعَظِيمُ ٩

៩-(ចូរចងចាំ)នៅថ្ងៃដែលទ្រង់នឹងប្រមូលផ្តុំពួកអ្នកនៅថ្ងៃប្រមូលផ្តុំ(ដើម្បីជំនុំជំរះ) ។ នោះគឺជាថ្ងៃដែលស្តែងចេញពីភាពខាតបង់ និងភាពចំណេញ ។ ហើយអ្នកណាដែលមានជំនឿលើអល់ឡោះ និងសាងអំពើល្អត្រឹមត្រូវនោះ ទ្រង់នឹងលុបបំបាត់ពីគេនូវបាបកម្មទាំងឡាយរបស់គេ និងបញ្ចូលគេទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។ នោះគឺ ជាជោគជ័យមួយដ៏ធំបំផុត ។

وَٱلَّذِينَ كَفَرُواْ وَكَذَّبُواْ بِـَٔايَٰتِنَآ
أُوْلَٰٓئِكَ أَصۡحَٰبُ ٱلنَّارِ خَٰلِدِينَ فِيهَاۖ وَبِئۡسَ
ٱلۡمَصِيرُ ١٠

១០-រីឯពួកដែលប្រឆាំង និងបានបដិសេធនឹងភស្តុតាងៗរបស់យើង ពួកទាំងនោះគឺជាពួកនរក ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ និងជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត ។

مَآ أَصَابَ مِن مُّصِيبَةٍ إِلَّا بِإِذۡنِ ٱللَّهِۗ
وَمَن يُؤۡمِنۢ بِٱللَّهِ يَهۡدِ قَلۡبَهُۥۚ وَٱللَّهُ بِكُلِّ شَيۡءٍ

១១-គ្មានអ្នកណាម្នាក់ទទួលរងគ្រោះថ្នាក់ឡើយ លើកលែងតែមានការអនុញ្ញាតរបស់អល់ឡោះ ។ ហើយអ្នកណាដែលមានជំនឿលើអល់ឡោះ ទ្រង់នឹងចង្អុលបង្ហាញដល់ដួងចិត្តរបស់គេ ។ ហើយ

អល់ឡោះដឹងបំផុតនូវអ្វីៗទាំងអស់ ។

عَلِيمٌ ⑪

១២-ហើយចូរពួកអ្នកប្រតិបត្តិតាមអល់ឡោះ និងប្រតិបត្តិតាមអ្នកនាំសារ(មូហាំម៉ាត់) ។ តែប្រសិនបើពួកអ្នកងាកចេញវិញនោះ ពិតប្រាកដណាស់កាតព្វកិច្ចអ្នកនាំសាររបស់យើងគ្រាន់តែជាអ្នកផ្សព្វផ្សាយសារដ៏ច្បាស់លាស់ប៉ុណ្ណោះ ។

وَأَطِيعُواْ ٱللَّهَ وَأَطِيعُواْ ٱلرَّسُولَ فَإِن تَوَلَّيْتُمْ فَإِنَّمَا عَلَىٰ رَسُولِنَا ٱلْبَلَٰغُ ٱلْمُبِينُ ⑫

១៣-អល់ឡោះជាម្ចាស់ ដែលគ្មានម្ចាស់ណាត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ ហើយចំពោះអល់ឡោះតែមួយគត់ ដែលបណ្ដាអ្នកមានជំនឿប្រគល់ការទុកចិត្ត ។

ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ۚ وَعَلَى ٱللَّهِ فَلْيَتَوَكَّلِ ٱلْمُؤْمِنُونَ ⑬

១៤-ឱបណ្ដាអ្នកដែលមានជំនឿ! ពិតប្រាកដណាស់ភរិយារបស់ពួកអ្នក និងកូនចៅរបស់ពួកអ្នកមួយចំនួនជាសត្រូវរបស់ពួកអ្នក ។ ដូច្នេះ ចូរពួកអ្នកប្រុងប្រយ័ត្នចំពោះពួកគេ ។ ប៉ុន្ដែបើពួកអ្នកអធ្យាស្រ័យ និងសណ្ដោសប្រណី ហើយនិងអភ័យទោសដល់ពួកគេនោះ គឺពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់ ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِنَّ مِنْ أَزْوَٰجِكُمْ وَأَوْلَٰدِكُمْ عَدُوًّا لَّكُمْ فَٱحْذَرُوهُمْ ۚ وَإِن تَعْفُواْ وَتَصْفَحُواْ وَتَغْفِرُواْ فَإِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ ⑭

១៥-តាមពិតទ្រព្យសម្បត្តិរបស់ពួកអ្នក និងកូនចៅរបស់ពួកអ្នក គឺគ្រាន់តែជាការសាកល្បង(ចំពោះពួកអ្នក)ប៉ុណ្ណោះ ។ ហើយអល់ឡោះមានការតបស្នងផលបុណ្យដ៏ធំធេង ។

إِنَّمَآ أَمْوَٰلُكُمْ وَأَوْلَٰدُكُمْ فِتْنَةٌ ۚ وَٱللَّهُ عِندَهُۥٓ أَجْرٌ عَظِيمٌ ⑮

១៦-ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះទៅតាមលទ្ធភាពរបស់ពួកអ្នក ហើយចូរពួកអ្នកស្ដាប់ និងប្រតិបត្តិតាម(អ្នកនាំសារ) ហើយនិងបរិច្ចាគទ្រព្យសម្បត្តិ វាគឺជាការប្រសើរសម្រាប់ពួកអ្នកផ្ទាល់ ។ អ្នកណាហើយដែលរក្សាខ្លួនចេញពីភាពកំណាញ់ អ្នកទាំងនោះគឺជាអ្នកដែលទទួលបានជោគជ័យ ។

فَٱتَّقُواْ ٱللَّهَ مَا ٱسْتَطَعْتُمْ وَٱسْمَعُواْ وَأَطِيعُواْ وَأَنفِقُواْ خَيْرًا لِّأَنفُسِكُمْ ۗ وَمَن يُوقَ شُحَّ نَفْسِهِۦ فَأُوْلَٰٓئِكَ هُمُ ٱلْمُفْلِحُونَ ⑯

១៧-ប្រសិនបើពួកអ្នកឱ្យអល់ឡោះខ្ចីនូវកម្ចីមួយដ៏ល្អប្រពៃ (បរិច្ចាគទ្រព្យសម្បត្តិក្នុងមាគ៌ាអល់ឡោះ)នោះ ទ្រង់នឹងបន្ថែមវាសម្រាប់ពួកអ្នកវិញទ្វេដង ហើយទ្រង់នឹងអភ័យទោសឱ្យពួកអ្នក ។ ហើយអល់ឡោះមហាដឹងគុណ មហាទន់ភ្លន់ ។

إِن تُقْرِضُواْ ٱللَّهَ قَرْضًا حَسَنًا يُضَٰعِفْهُ لَكُمْ وَيَغْفِرْ لَكُمْ ۚ وَٱللَّهُ شَكُورٌ حَلِيمٌ ⑰

១៨-ទ្រង់ជាអ្នកដឹងបំផុតនូវភាពអាថិកំបាំង និងភាពលាត

عَٰلِمُ ٱلْغَيْبِ وَٱلشَّهَٰدَةِ ٱلْعَزِيزُ ٱلْحَكِيمُ ⑱

ត្រដាង ។ ទ្រង់មហាមខ្លាំងពូកែ មហាគតិបណ្ឌិត ។

## ជំពូកអាត់តឡាក

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-ឱណាពី! នៅពេលពួកអ្នកលែងលះភរិយា ចូរពួកអ្នកលែងលះពួកនាងតាមអ៊ីតដះរបស់ពួកនាង( ពេលជ្រះស្អាតពីឈាមរដូវ និងមិនទាន់បានរួមរ័ក) ។ ហើយចូរពួកអ្នករាប់ពេលវេលានោះផង ។ ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះដែលជាម្ចាស់របស់ពួកអ្នក ។ ចូរពួកអ្នកកុំបណ្ដេញពួកនាងចេញពីលំនៅដ្ឋានរបស់ពួកនាង ហើយពួកនាងក៏មិនត្រូវចាកចេញដោយចិត្តឯងដែរ លើកលែងតែពួកនាងប្រព្រឹត្តអំពើអសីលធម៌យ៉ាងច្បាស់លាស់ប៉ុណ្ណោះ ។ នោះជាច្បាប់របស់អល់ឡោះ ។ ហើយអ្នកណាដែលបំពាននឹងច្បាប់របស់អល់ឡោះ គឺគេពិតជាបានបំពានលើខ្លួនឯង ។ អ្នកមិនដឹងឡើយ ជួនកាលអល់ឡោះអាចធ្វើឱ្យរឿងថ្មីមួយកើតឡើងបន្ទាប់ពី( ការលែងលះ) នោះ ។

២-ហើយនៅពេលដែលពួកនាងជិតផុតពេលកំណត់( លែងលះលើកទីមួយ ឬលើកទីពីរ) ចូរពួកអ្នកវិលទៅរកពួកនាងវិញក្នុងលក្ខណៈមួយសមរម្យ ឬក៏លែងលះពួកនាងឱ្យដាច់ស្រឡះក្នុងលក្ខណៈមួយសមរម្យដែរ ។ ហើយចូរពួកអ្នករកសាក្សីដ៏យុត្តិធម៌ចំនួនពីរនាក់នៅក្នុងចំណោមពួកអ្នក ហើយចូរពួកអ្នកធ្វើសាក្សីដើម្បីអល់ឡោះ ។ ប្រការទាំងនោះគឺគេអប់រំចំពោះអ្នកណាដែលមានជំនឿលើអល់ឡោះនិងថ្ងៃបរលោក ។ ហើយអ្នកណាដែលកោតខ្លាចអល់ឡោះទ្រង់នឹងធ្វើឱ្យគេមានច្រកចេញ ។

៣-ហើយទ្រង់នឹងផ្ដល់លាភសក្ការៈដល់គេដោយគេនឹកស្មានមិនដល់ ។ ហើយអ្នកណាដែលប្រគល់ការទុកចិត្តលើអល់ឡោះ គឺទ្រង់ជាអ្នកផ្ដល់ភាពគ្រប់គ្រាន់ដល់គេ ។ ពិតប្រាកដណាស់អល់ឡោះគឺជាអ្នកសម្រេចនូវរាល់គោលបំណងរបស់ទ្រង់ ។ ពិតណាស់អល់ឡោះបានបង្កើតរាល់អ្វីៗទាំងអស់គឺមានកំរិត ។

## سورة الطلاق

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

يَٰٓأَيُّهَا ٱلنَّبِيُّ إِذَا طَلَّقۡتُمُ ٱلنِّسَآءَ فَطَلِّقُوهُنَّ لِعِدَّتِهِنَّ وَأَحۡصُواْ ٱلۡعِدَّةَۖ وَٱتَّقُواْ ٱللَّهَ رَبَّكُمۡۖ لَا تُخۡرِجُوهُنَّ مِنۢ بُيُوتِهِنَّ وَلَا يَخۡرُجۡنَ إِلَّآ أَن يَأۡتِينَ بِفَٰحِشَةٖ مُّبَيِّنَةٖۚ وَتِلۡكَ حُدُودُ ٱللَّهِۚ وَمَن يَتَعَدَّ حُدُودَ ٱللَّهِ فَقَدۡ ظَلَمَ نَفۡسَهُۥۚ لَا تَدۡرِي لَعَلَّ ٱللَّهَ يُحۡدِثُ بَعۡدَ ذَٰلِكَ أَمۡرٗا ١

فَإِذَا بَلَغۡنَ أَجَلَهُنَّ فَأَمۡسِكُوهُنَّ بِمَعۡرُوفٍ أَوۡ فَارِقُوهُنَّ بِمَعۡرُوفٖ وَأَشۡهِدُواْ ذَوَيۡ عَدۡلٖ مِّنكُمۡ وَأَقِيمُواْ ٱلشَّهَٰدَةَ لِلَّهِۚ ذَٰلِكُمۡ يُوعَظُ بِهِۦ مَن كَانَ يُؤۡمِنُ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِۚ وَمَن يَتَّقِ ٱللَّهَ يَجۡعَل لَّهُۥ مَخۡرَجٗا ٢

وَيَرۡزُقۡهُ مِنۡ حَيۡثُ لَا يَحۡتَسِبُۚ وَمَن يَتَوَكَّلۡ عَلَى ٱللَّهِ فَهُوَ حَسۡبُهُۥٓۚ إِنَّ ٱللَّهَ بَٰلِغُ أَمۡرِهِۦۚ قَدۡ جَعَلَ ٱللَّهُ لِكُلِّ شَيۡءٖ قَدۡرٗا ٣

៤-ហើយបណ្តាស្ត្រីដែលអស់ឈាមរដូវ(ដោយសារវ័យចំណាស់)ក្នុងចំណោមភរិយារបស់ពួកអ្នក(ដែលបានលែងលះ) ប្រសិនបើពួកអ្នកសង្ស័យ(អំពីពេលកំណត់នៃការលែងលះដាច់ស្រឡះ)នោះ គឺពេលកំណត់របស់ពួកនាងចំនួនបីខែ។ ហើយចំពោះស្ត្រីដែលមិនទាន់មានឈាមរដូវក៏ដូច្នោះដែរ។ រីឯបណ្តាស្ត្រីមានគភ៌វិញ ពេលកំណត់(នៃការលែងលះដាច់ស្រឡះ)របស់ពួកនាងគឺរហូតដល់ពួកនាងសម្រាលកូនរួច។ ហើយអ្នកណាដែលកោតខ្លាចអល់ឡោះ ទ្រង់នឹងផ្តល់ភាពងាយស្រួលនូវរាល់កិច្ចការរបស់គេ។

وَٱلَّٰٓـِٔي يَئِسۡنَ مِنَ ٱلۡمَحِيضِ مِن نِّسَآئِكُمۡ
إِنِ ٱرۡتَبۡتُمۡ فَعِدَّتُهُنَّ ثَلَٰثَةُ أَشۡهُرٖ وَٱلَّٰٓـِٔي لَمۡ
يَحِضۡنَۚ وَأُوْلَٰتُ ٱلۡأَحۡمَالِ أَجَلُهُنَّ أَن يَضَعۡنَ
حَمۡلَهُنَّۚ وَمَن يَتَّقِ ٱللَّهَ يَجۡعَل لَّهُۥ مِنۡ أَمۡرِهِۦ
يُسۡرٗا ٤

៥-នោះជាបទបញ្ជារបស់អល់ឡោះដែលបានបញ្ចុះវាមកចំពោះពួកអ្នក។ ហើយអ្នកណាដែលកោតខ្លាចអល់ឡោះ ទ្រង់នឹងលុបបំបាត់ពីគេនូវរាល់បាបកម្មទាំងឡាយរបស់គេ ហើយទ្រង់នឹងប្រទានឱ្យគេវិញនូវផលបុណ្យដ៏ធំធេង។

ذَٰلِكَ أَمۡرُ ٱللَّهِ أَنزَلَهُۥٓ إِلَيۡكُمۡۚ وَمَن يَتَّقِ ٱللَّهَ
يُكَفِّرۡ عَنۡهُ سَيِّـَٔاتِهِۦ وَيُعۡظِمۡ لَهُۥٓ أَجۡرًا ٥

៦- ចូរពួកអ្នកផ្តល់កន្លែងឱ្យពួកនាង(ភរិយាដែលលែងលះមិនទាន់ដាច់ស្រឡះ)នូវទីកន្លែងណាដែលពួកអ្នករស់នៅតាមលទ្ធភាពរបស់ពួកអ្នក។ ហើយចូរពួកអ្នកកុំបង្កភាពគ្រោះថ្នាក់ដល់ពួកនាងជាហេតុធ្វើឱ្យពួកនាងមានការចង្អៀតចិត្តក្នុងការរស់នៅឱ្យសោះ។ ហើយប្រសិនបើពួកនាងមានគភ៌ ចូរពួកអ្នកបរិច្ចាគឱ្យពួកនាងរហូតទាល់តែពួកនាងសម្រាលកូនរួច។ ហើយប្រសិនបើពួកនាងបំបៅកូនឱ្យពួកអ្នក ចូរពួកអ្នកផ្តល់ឱ្យពួកនាងនូវថ្លៃឈ្នួលរបស់ពួកនាង ហើយចូរប្រឹក្សាគ្នារវាងពួកអ្នក(ស្វាមីនិងភរិយា)ក្នុងវិធីមួយដ៏សមរម្យ។ ប្រសិនបើអ្នកទាំងពីរមិនឯកភាពគ្នា ចូរអ្នក(ឪពុក)រកអ្នកបំបៅផ្សេងទៀតមកជំនួស។

أَسۡكِنُوهُنَّ مِنۡ حَيۡثُ سَكَنتُم مِّن وُجۡدِكُمۡ
وَلَا تُضَآرُّوهُنَّ لِتُضَيِّقُواْ عَلَيۡهِنَّۚ وَإِن كُنَّ
أُوْلَٰتِ حَمۡلٖ فَأَنفِقُواْ عَلَيۡهِنَّ حَتَّىٰ يَضَعۡنَ
حَمۡلَهُنَّۚ فَإِنۡ أَرۡضَعۡنَ لَكُمۡ فَـَٔاتُوهُنَّ أُجُورَهُنَّ
وَأۡتَمِرُواْ بَيۡنَكُم بِمَعۡرُوفٖۖ وَإِن تَعَاسَرۡتُمۡ
فَسَتُرۡضِعُ لَهُۥٓ أُخۡرَىٰ ٦

៧-អ្នកដែលមានទ្រព្យសម្បត្តិច្រើន ចូរឱ្យគេបរិច្ចាគឱ្យបានសមរម្យអំពីទ្រព្យសម្បត្តិរបស់គេ។ រីឯអ្នកណាដែលទ្រព្យសម្បត្តិរបស់គេមានកំណត់ ចូរឱ្យគេបរិច្ចាគទៅតាមអ្វីដែលអល់ឡោះបានផ្តល់ឱ្យគេ។ អល់ឡោះពុំដាក់បន្ទុកលើបុគ្គលណាម្នាក់ក្រៅពីអ្វីដែលទ្រង់បានផ្តល់ឱ្យគេឡើយ។ អល់ឡោះនឹងផ្តល់ឱ្យមានភាពងាយស្រួលវិញបន្ទាប់ពីមានភាពលំបាក។

لِيُنفِقۡ ذُو سَعَةٖ مِّن سَعَتِهِۦۖ وَمَن قُدِرَ عَلَيۡهِ
رِزۡقُهُۥ فَلۡيُنفِقۡ مِمَّآ ءَاتَىٰهُ ٱللَّهُۚ لَا يُكَلِّفُ ٱللَّهُ
نَفۡسًا إِلَّا مَآ ءَاتَىٰهَاۚ سَيَجۡعَلُ ٱللَّهُ بَعۡدَ عُسۡرٖ
يُسۡرٗا ٧

وَكَأَيِّن مِّن قَرۡيَةٍ عَتَتۡ عَنۡ أَمۡرِ رَبِّهَا وَرُسُلِهِۦ فَحَاسَبۡنَٰهَا حِسَابٗا شَدِيدٗا وَعَذَّبۡنَٰهَا عَذَابٗا نُّكۡرٗا ٨

៨-ហើយមានអ្នកភូមិស្រុកជាច្រើនបានប្រឆាំងនឹងបទបញ្ជានៃម្ចាស់របស់ពួកគេ និងបណ្ដាអ្នកនាំសាររបស់ទ្រង់។ ហើយយើងបានទូទាត់ពួកគេនូវការទូទាត់មួយដ៏តឹងរ៉ឹងបំផុត(នៅក្នុងលោកិយ)។ ហើយយើងបានធ្វើទារុណកម្មពួកគេនូវទារុណកម្មមួយដ៏សែនរន្ធត់ជាទីបំផុត។

فَذَاقَتۡ وَبَالَ أَمۡرِهَا وَكَانَ عَٰقِبَةُ أَمۡرِهَا خُسۡرًا ٩

៩-ហើយពួកគេបានភ្លក្សនូវលទ្ធផលអាក្រក់នៃទង្វើរបស់ពួកគេ ហើយលទ្ធផលចុងក្រោយនៃទង្វើរបស់ពួកគេគឺការខាតបង់។

أَعَدَّ ٱللَّهُ لَهُمۡ عَذَابٗا شَدِيدٗاۖ فَٱتَّقُواْ ٱللَّهَ يَٰٓأُوْلِي ٱلۡأَلۡبَٰبِ ٱلَّذِينَ ءَامَنُواْۚ قَدۡ أَنزَلَ ٱللَّهُ إِلَيۡكُمۡ ذِكۡرٗا ١٠

១០-អល់ឡោះបានរៀបចំឱ្យពួកគេនូវទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។ ដូច្នេះ ចូរពួកអ្នកកោតខ្លាចអល់ឡោះ ឱបណ្ដាបញ្ញាជនដែលមានជំនឿ! ជាការពិតណាស់ អល់ឡោះបានបញ្ចុះការរំលឹកមួយ(គម្ពីរគួរអាន)មកចំពោះពួកអ្នក។

رَّسُولٗا يَتۡلُواْ عَلَيۡكُمۡ ءَايَٰتِ ٱللَّهِ مُبَيِّنَٰتٖ لِّيُخۡرِجَ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ مِنَ ٱلظُّلُمَٰتِ إِلَى ٱلنُّورِۚ وَمَن يُؤۡمِنۢ بِٱللَّهِ وَيَعۡمَلۡ صَٰلِحٗا يُدۡخِلۡهُ جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَآ أَبَدٗاۖ قَدۡ أَحۡسَنَ ٱللَّهُ لَهُۥ رِزۡقًا ١١

១១-(អល់ឡោះបានបញ្ជូន)អ្នកនាំសារម្នាក់(មូហាំម៉ាត់)ដើម្បីសូត្រអាយ៉ាត់ៗរបស់អល់ឡោះដ៏ច្បាស់លាស់ឱ្យពួកអ្នកស្ដាប់ ដើម្បីគេធ្វើឱ្យបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវចាកផុតពីភាពងងឹត(គ្មានជំនឿ)ទៅកាន់ភាពមានពន្លឺ(មានជំនឿ)។ ហើយអ្នកណាដែលមានជំនឿលើអល់ឡោះ និងបានសាងអំពើល្អត្រឹមត្រូវនោះ ទ្រង់នឹងបញ្ចូលគេទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។ ជាការពិតណាស់ អល់ឡោះបានផ្ដល់លាភសក្ការៈដ៏ប្រសើរបំផុតដល់គេ។

ٱللَّهُ ٱلَّذِي خَلَقَ سَبۡعَ سَمَٰوَٰتٖ وَمِنَ ٱلۡأَرۡضِ مِثۡلَهُنَّۖ يَتَنَزَّلُ ٱلۡأَمۡرُ بَيۡنَهُنَّ لِتَعۡلَمُوٓاْ أَنَّ ٱللَّهَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ وَأَنَّ ٱللَّهَ قَدۡ أَحَاطَ بِكُلِّ شَيۡءٍ عِلۡمَۢا ١٢

១២-អល់ឡោះជាអ្នកដែលបានបង្កើតមេឃទាំងប្រាំពីរជាន់ និងផែនដីក៏ដូចគ្នាដែរ។ បទបញ្ជា(របស់អល់ឡោះ) ត្រូវគេបញ្ចុះមករវាងវាទាំងពីរ(មេឃ និងផែនដី) ដើម្បីឱ្យពួកអ្នកដឹងថា ពិតប្រាកដណាស់ អល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ ហើយពិតប្រាកដណាស់ អល់ឡោះដឹងជ្រួតជ្រាបលើអ្វីៗទាំងអស់។

## سورة التحريم

## ជំពូកអាត់តះរីម

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-ឱណាពី! ហេតុអ្វីបានជាអ្នកហាមឃាត់ខ្លួនឯងនូវអ្វីដែល អល់ឡោះអនុញ្ញាតឱ្យអ្នក ខណៈដែលអ្នកចង់បានការពេញចិត្តនៃ ភរិយាៗរបស់អ្នកនោះ? ហើយអល់ឡោះ មហាអភ័យទោស មហា អាណិតស្រឡាញ់។

يَٰٓأَيُّهَا ٱلنَّبِيُّ لِمَ تُحَرِّمُ مَآ أَحَلَّ ٱللَّهُ لَكَۖ تَبۡتَغِي مَرۡضَاتَ أَزۡوَٰجِكَۚ وَٱللَّهُ غَفُورٞ رَّحِيمٞ ١

២-ជាការពិតណាស់ អល់ឡោះបានដាក់កាតព្វកិច្ចចំពោះពួក អ្នកក្នុងការដោះស្រាយនៃពាក្យសម្បថរបស់ពួកអ្នក។ អល់ឡោះ គឺជាអ្នកគាំពារពួកអ្នក ហើយទ្រង់មហាដឹង មហាគតិបណ្ឌិត។

قَدۡ فَرَضَ ٱللَّهُ لَكُمۡ تَحِلَّةَ أَيۡمَٰنِكُمۡۚ وَٱللَّهُ مَوۡلَىٰكُمۡۖ وَهُوَ ٱلۡعَلِيمُ ٱلۡحَكِيمُ ٢

៣-ហើយ(ចូរចងចាំ) នៅពេលដែលណាពីបានប្រាប់រឿង សម្ងាត់មួយដល់ភរិយារបស់គាត់(ហាហ្វសោះ) ហើយនៅពេល ដែលនាងបានប្រាប់រឿងរ៉ាវនោះ(ដល់អាអ៊ីស្ហះ) ពេលនោះ អល់ឡោះបានលាតត្រដាងរឿងនោះឱ្យណាពីដឹង។ គាត់ក៏បាន ប្រាប់(ហាហ្វសោះ)ឱ្យដឹងនូវរឿងមួយចំនួន និងលាក់មួយចំនួន។ ហើយនៅពេលដែលគាត់បានប្រាប់រឿងទាំងនោះដល់នាង នាង បានសួរថា: តើអ្នកណាប្រាប់រឿងនេះដល់អ្នក។ គាត់ក៏បានឆ្លើយ ថា: គឺម្ចាស់ដែលមហាដឹងជ្រួតជ្រាបបានប្រាប់ខ្ញុំ។

وَإِذۡ أَسَرَّ ٱلنَّبِيُّ إِلَىٰ بَعۡضِ أَزۡوَٰجِهِۦ حَدِيثٗا فَلَمَّا نَبَّأَتۡ بِهِۦ وَأَظۡهَرَهُ ٱللَّهُ عَلَيۡهِ عَرَّفَ بَعۡضَهُۥ وَأَعۡرَضَ عَنۢ بَعۡضٖۖ فَلَمَّا نَبَّأَهَا بِهِۦ قَالَتۡ مَنۡ أَنۢبَأَكَ هَٰذَاۖ قَالَ نَبَّأَنِيَ ٱلۡعَلِيمُ ٱلۡخَبِيرُ ٣

៤-ប្រសិនបើអ្នកទាំងពីរ(អាអ៊ីស្ហះ និងហាហ្វសោះ)សារភាព ទោសកំហុសចំពោះអល់ឡោះ (ទ្រង់នឹងអភ័យទោសដល់អ្នកទាំង ពីរជាមិនខាន) ព្រោះជាការពិតណាស់ ដួងចិត្តរបស់អ្នកទាំងពីរបាន ទោរទន់ទៅរកអ្វីដែលណាពីមិនចូលចិត្ត។ តែប្រសិនបើអ្នកទាំងពីរ ជួយគ្នាប្រឆាំងនឹងគាត់(មូហាំម៉ាត់)វិញនោះ (គាត់នឹងមានអ្នក ជួយ)។ ពិតប្រាកដណាស់ អល់ឡោះជាអ្នកគាំពារគាត់ ហើយ ជីព្រីលនិងអ្នកដែលសាងអំពើល្អត្រឹមត្រូវនៃបណ្តាអ្នកមានជំនឿ ព្រមទាំងម៉ាឡាអ៊ីកាត់ក៏ជាអ្នកជួយគាត់ក្រោយពីនោះដែរ។

إِن تَتُوبَآ إِلَى ٱللَّهِ فَقَدۡ صَغَتۡ قُلُوبُكُمَاۖ وَإِن تَظَٰهَرَا عَلَيۡهِ فَإِنَّ ٱللَّهَ هُوَ مَوۡلَىٰهُ وَجِبۡرِيلُ وَصَٰلِحُ ٱلۡمُؤۡمِنِينَۖ وَٱلۡمَلَٰٓئِكَةُ بَعۡدَ ذَٰلِكَ ظَهِيرٌ ٤

៥-ប្រសិនបើគាត់លែងលះពួកអ្នក សង្ឃឹមថាម្ចាស់របស់គាត់ នឹងផ្លាស់ប្តូរឱ្យគាត់នូវភរិយាជាច្រើនផ្សេងទៀតដែលជាមូស្លីម ជា អ្នកមានជំនឿ ជាអ្នកប្រតិបត្តិតាម ជាអ្នកសារភាពកំហុស ជាអ្នក គោរពសក្ការៈ ជាអ្នកកាន់អំណត់បួសដែលពួកនាងមួយចំនួនជាស្រី មេម៉ាយ និងមួយចំនួនទៀតជាស្រីក្រមុំល្អជាងពួកអ្នកទៅទៀត។

عَسَىٰ رَبُّهُۥٓ إِن طَلَّقَكُنَّ أَن يُبۡدِلَهُۥٓ أَزۡوَٰجًا خَيۡرٗا مِّنكُنَّ مُسۡلِمَٰتٖ مُّؤۡمِنَٰتٖ قَٰنِتَٰتٖ تَٰٓئِبَٰتٍ عَٰبِدَٰتٖ سَٰٓئِحَٰتٖ ثَيِّبَٰتٖ وَأَبۡكَارٗا ٥

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ قُوٓاْ أَنفُسَكُمۡ وَأَهۡلِيكُمۡ نَارٗا وَقُودُهَا ٱلنَّاسُ وَٱلۡحِجَارَةُ عَلَيۡهَا مَلَٰٓئِكَةٌ غِلَاظٞ شِدَادٞ لَّا يَعۡصُونَ ٱللَّهَ مَآ أَمَرَهُمۡ وَيَفۡعَلُونَ مَا يُؤۡمَرُونَ ٦

៦-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកថែរក្សាខ្លួនប្រាណរបស់ពួកអ្នក និងក្រុមគ្រួសាររបស់ពួកអ្នកឱ្យផុតពីភ្លើងនរកដែលវត្ថុសម្រាប់ដុតវានោះ គឺមនុស្សនិងដុំថ្ម។ នៅពីលើវាមានម៉ាឡាអ៊ីកាត់ដែលមានទឹកមុខម៉ឺងម៉ាត់ ពួកគេមិនជំទាស់នឹងអល់ឡោះនូវអ្វីដែលទ្រង់បានបញ្ជាដល់ពួកគេឡើយ ហើយពួកគេធ្វើនូវអ្វីដែលអល់ឡោះបញ្ជា។

يَٰٓأَيُّهَا ٱلَّذِينَ كَفَرُواْ لَا تَعۡتَذِرُواْ ٱلۡيَوۡمَۖ إِنَّمَا تُجۡزَوۡنَ مَا كُنتُمۡ تَعۡمَلُونَ ٧

៧-ឱពួកដែលគ្មានជំនឿ! ពួកអ្នកមិនចាំបាច់ដោះសាទេនៅថ្ងៃនេះ។ ពិតប្រាកដណាស់ ពួកអ្នកត្រូវបានគេតបស្នងឱ្យនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ تُوبُوٓاْ إِلَى ٱللَّهِ تَوۡبَةٗ نَّصُوحًا عَسَىٰ رَبُّكُمۡ أَن يُكَفِّرَ عَنكُمۡ سَيِّـَٔاتِكُمۡ وَيُدۡخِلَكُمۡ جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ يَوۡمَ لَا يُخۡزِي ٱللَّهُ ٱلنَّبِيَّ وَٱلَّذِينَ ءَامَنُواْ مَعَهُۥۖ نُورُهُمۡ يَسۡعَىٰ بَيۡنَ أَيۡدِيهِمۡ وَبِأَيۡمَٰنِهِمۡ يَقُولُونَ رَبَّنَآ أَتۡمِمۡ لَنَا نُورَنَا وَٱغۡفِرۡ لَنَآۖ إِنَّكَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٨

៨-ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកសារភាពទោសកំហុសចំពោះអល់ឡោះនូវការសារភាពមួយដ៏ស្មោះស(មិនវិលទៅសាងបាបកម្មវិញជាដាច់ខាត)។ សង្ឃឹមថា ម្ចាស់របស់ពួកអ្នកនឹងលុបបំបាត់នូវបាបកម្មទាំងឡាយរបស់ពួកអ្នក ហើយទ្រង់នឹងបញ្ចូលពួកអ្នកទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា។(ចូរចងចាំ) នៅថ្ងៃដែលអល់ឡោះនឹងមិនធ្វើឱ្យណាពី និងបណ្ដាអ្នកដែលរួមជំនឿជាមួយគាត់អាម៉ាស់ឡើយ។ ពន្លឺរបស់ពួកគេភ្លឺចែងចាំងនៅខាងមុខ និងនៅខាងស្ដាំរបស់ពួកគេ ដោយពួកគេបួងសួងសុំថា: ឱម្ចាស់របស់ពួកយើង! សូមទ្រង់មេត្តាបំពេញពន្លឺរបស់ពួកយើងឱ្យនៅភ្លឺចែងចាំងសម្រាប់ពួកយើង និងអភ័យទោសឱ្យពួកយើងផង ពិតប្រាកដណាស់ ទ្រង់មានអានុភាពលើអ្វីៗទាំងអស់។

يَٰٓأَيُّهَا ٱلنَّبِيُّ جَٰهِدِ ٱلۡكُفَّارَ وَٱلۡمُنَٰفِقِينَ وَٱغۡلُظۡ عَلَيۡهِمۡۚ وَمَأۡوَىٰهُمۡ جَهَنَّمُۖ وَبِئۡسَ ٱلۡمَصِيرُ ٩

៩-ឱណាពី(មូហាំម៉ាត់)! ចូរអ្នកតស៊ូប្រឆាំងនឹងពួកគ្មានជំនឿ និងពួកពុតត្បុត ហើយត្រូវធ្វើឱ្យបានតឹងរ៉ឹងបំផុតចំពោះពួកគេ។ ហើយទីកន្លែងរបស់ពួកគេគឺនរកជើហាន់ណាំដែលជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត។

ضَرَبَ ٱللَّهُ مَثَلٗا لِّلَّذِينَ كَفَرُواْ ٱمۡرَأَتَ نُوحٖ وَٱمۡرَأَتَ لُوطٖۖ كَانَتَا تَحۡتَ عَبۡدَيۡنِ مِنۡ عِبَادِنَا صَٰلِحَيۡنِ فَخَانَتَاهُمَا فَلَمۡ يُغۡنِيَا

១០-អល់ឡោះបានលើកយកភរិយារបស់នូហ និងភរិយារបស់លូតធ្វើជាឧទាហរណ៍សម្រាប់ពួកដែលគ្មានជំនឿ។ នាងទាំងពីរបានស្ថិតនៅក្រោមការគ្រប់គ្រងនៃខ្ញុំទាំងពីររបស់យើងក្នុងចំណោមខ្ញុំរបស់យើងដែលល្អត្រឹមត្រូវ។ តែនាងទាំងពីរបានក្បត់នឹងគេទាំងពីរ

ហើយគេទាំងពីរមិនអាចជួយអ្វីដល់នាងទាំងពីរឱ្យរួចផុតពី(ទារុណ-កម្ម)អល់ឡោះឡើយ ។ ហើយមានគេនិយាយថាៈ ចូរអ្នកទាំងពីរ (ភរិយា)ចូលទៅក្នុងនរកជាមួយនឹងពួកអ្នកដែលនៅក្នុងនោះចុះ ។

១១-ហើយអល់ឡោះក៏បានលើកយកភរិយារបស់ហ្វៀរអោន ធ្វើជាឧទាហរណ៍សម្រាប់បណ្ដាអ្នកដែលមានជំនឿដែរ នៅពេលដែលនាងបានបួងសួងសុំថាៈ ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្ដាសង់លំនៅដ្ឋានមួយឱ្យខ្ញុំនៅក្បែរទ្រង់នៅក្នុងឋានសួគ៌ផង ហើយសូមទ្រង់មេត្ដាសង្គ្រោះខ្ញុំឱ្យផុតពីហ្វៀរអោន និងទង្វើរបស់គេ ហើយនិងមេត្ដាសង្គ្រោះខ្ញុំឱ្យរួចផុតពីក្រុមដែលបំពានផង ។

១២-ហើយម៉ារយ៉ាំកូនស្រីរបស់អ៊ិមរ៉ន(អល់ឡោះក៏បានលើកយកមកធ្វើជាឧទាហរណ៍សម្រាប់បណ្ដាអ្នកដែលមានជំនឿដែរ) ដែលនាងបានថែរក្សាភាពបរិសុទ្ធរបស់នាង ហើយយើងបាន(ប្រើឱ្យជីព្រីល)ផ្លុំវិញ្ញាណរបស់យើងចូលទៅក្នុងស្បូនរបស់នាង ។ ហើយនាងបានជឿនូវពាក្យពេចន៍ទាំងឡាយនៃម្ចាស់របស់នាង និងបណ្ដាគម្ពីររបស់ទ្រង់ ។ ហើយនាងគឺជាអ្នកដែលបានស្ថិតក្នុងចំណោមអ្នកដែលប្រតិបត្តិតាមអល់ឡោះ ។

## ជំពូកអាល់មុលក៏

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-ម្ចាស់ដែលមានអំណាចនៅក្នុងកណ្ដាប់ដៃរបស់ទ្រង់មហាឧត្តុង្គឧត្ដម ហើយទ្រង់មានអានុភាពលើអ្វីៗទាំងអស់ ។

២-គឺជាម្ចាស់ដែលបានបង្កើតការស្លាប់ និងការរស់ដើម្បីសាកល្បងពួកអ្នក តើអ្នកណាមួយក្នុងចំណោមពួកអ្នកដែលបានសាងអំពើល្អជាងគេ? ហើយទ្រង់មហាខ្លាំងពូកែ មហាអភ័យទោស ។

៣-គឺជាម្ចាស់ដែលបានបង្កើតមេឃប្រាំពីរជាន់តំរៀបពីលើគ្នា ។ អ្នក(មូហាំម៉ាត់)មិនឃើញមានភាពផ្ទាំផ្ទួងក្នុងការបង្កើតរបស់ម្ចាស់មហាសប្បុរសឡើយ ។ ដូច្នេះចូរអ្នកក្រឡេកមើលម្ដងទៀត តើអ្នកឃើញមានកន្លែងប្រេះស្រាំដែរឬទេ?

عَنۡهُمَا مِنَ ٱللَّهِ شَيۡـٔٗا وَقِيلَ ٱدۡخُلَا ٱلنَّارَ مَعَ ٱلدَّٰخِلِينَ ﴿١٠﴾

وَضَرَبَ ٱللَّهُ مَثَلٗا لِّلَّذِينَ ءَامَنُواْ ٱمۡرَأَتَ فِرۡعَوۡنَ إِذۡ قَالَتۡ رَبِّ ٱبۡنِ لِي عِندَكَ بَيۡتٗا فِي ٱلۡجَنَّةِ وَنَجِّنِي مِن فِرۡعَوۡنَ وَعَمَلِهِۦ وَنَجِّنِي مِنَ ٱلۡقَوۡمِ ٱلظَّٰلِمِينَ ﴿١١﴾

وَمَرۡيَمَ ٱبۡنَتَ عِمۡرَٰنَ ٱلَّتِيٓ أَحۡصَنَتۡ فَرۡجَهَا فَنَفَخۡنَا فِيهِ مِن رُّوحِنَا وَصَدَّقَتۡ بِكَلِمَٰتِ رَبِّهَا وَكُتُبِهِۦ وَكَانَتۡ مِنَ ٱلۡقَٰنِتِينَ ﴿١٢﴾

## سورة الملك

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

تَبَٰرَكَ ٱلَّذِي بِيَدِهِ ٱلۡمُلۡكُ وَهُوَ عَلَىٰ كُلِّ شَيۡءٖ قَدِيرٌ ﴿١﴾

ٱلَّذِي خَلَقَ ٱلۡمَوۡتَ وَٱلۡحَيَوٰةَ لِيَبۡلُوَكُمۡ أَيُّكُمۡ أَحۡسَنُ عَمَلٗاۚ وَهُوَ ٱلۡعَزِيزُ ٱلۡغَفُورُ ﴿٢﴾

ٱلَّذِي خَلَقَ سَبۡعَ سَمَٰوَٰتٖ طِبَاقٗاۖ مَّا تَرَىٰ فِي خَلۡقِ ٱلرَّحۡمَٰنِ مِن تَفَٰوُتٖۖ فَٱرۡجِعِ ٱلۡبَصَرَ هَلۡ تَرَىٰ مِن فُطُورٖ ﴿٣﴾

ثُمَّ ٱرۡجِعِ ٱلۡبَصَرَ كَرَّتَيۡنِ يَنقَلِبۡ إِلَيۡكَ ٱلۡبَصَرُ خَاسِئٗا وَهُوَ حَسِيرٞ ٤

៤-បន្ទាប់មក ចូរអ្នកក្រឡេកមើលម្តងហើយម្តងទៀតចុះ ការមើលឃើញនោះនឹងវិលត្រឡប់មកកាន់អ្នកវិញក្នុងសភាពអាម៉ាស់ (ដោយមិនមើលឃើញមានភាពខ្វះខាតអ្វីឡើយ) ហើយវាមានភាពនឿយហត់បំផុត ។

وَلَقَدۡ زَيَّنَّا ٱلسَّمَآءَ ٱلدُّنۡيَا بِمَصَٰبِيحَ وَجَعَلۡنَٰهَا رُجُومٗا لِّلشَّيَٰطِينِۖ وَأَعۡتَدۡنَا لَهُمۡ عَذَابَ ٱلسَّعِيرِ ٥

៥-ហើយជាការពិតណាស់ យើងបានតុបតែងលំអមេឃជាន់ក្រោមដោយហ្វូងតារា ។ ហើយយើងបានបង្កើតវា(ហ្វូងតារា) ដើម្បីបណ្តេញពួកស្ហៃតន ។ ហើយយើងបានរៀបចំសម្រាប់ពួកវានូវទារុណកម្មនៃភ្លើងនរកដែលឆេះសន្ធោសន្ធៅ ។

وَلِلَّذِينَ كَفَرُواْ بِرَبِّهِمۡ عَذَابُ جَهَنَّمَۖ وَبِئۡسَ ٱلۡمَصِيرُ ٦

៦-ហើយសម្រាប់ពួកដែលប្រឆាំងនឹងម្ចាស់របស់ពួកគេ គឺទារុណកម្មនៃនរកជើហាន់ណាំ ដែលជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត ។

إِذَآ أُلۡقُواْ فِيهَا سَمِعُواْ لَهَا شَهِيقٗا وَهِيَ تَفُورُ ٧

៧-នៅពេលដែលពួកគេត្រូវបានគេគ្រវែងចូលទៅក្នុងវា(នរក) ពួកគេបានឮសម្រែកយ៉ាងខ្លាំង ខណៈដែលវាកំពុងតែពុះកញ្ជ្រោល ។

تَكَادُ تَمَيَّزُ مِنَ ٱلۡغَيۡظِۖ كُلَّمَآ أُلۡقِيَ فِيهَا فَوۡجٞ سَأَلَهُمۡ خَزَنَتُهَآ أَلَمۡ يَأۡتِكُمۡ نَذِيرٞ ٨

៨-វាស្ទើរតែបែកខ្ចាត់ខ្ចាយដោយសារតែកំហឹង(ចំពោះពួកដែលប្រឆាំង) ។ រាល់ពេលដែលក្រុមមួយត្រូវបានគេគ្រវែងចូលទៅក្នុងវា អ្នកយាមរបស់វាបានសួរទៅពួកគេថាៈ តើអ្នកដាស់តឿនព្រមាន(អ្នកនាំសារ) មិនបានមកដល់ពួកអ្នកទេឬ?

قَالُواْ بَلَىٰ قَدۡ جَآءَنَا نَذِيرٞ فَكَذَّبۡنَا وَقُلۡنَا مَا نَزَّلَ ٱللَّهُ مِن شَيۡءٍ إِنۡ أَنتُمۡ إِلَّا فِي ضَلَٰلٖ كَبِيرٖ ٩

៩-ពួកគេបានឆ្លើយថាៈ មានពិតប្រាកដមែន ។ អ្នកដាស់តឿនព្រមានពិតជាបានមកដល់ពួកយើងមែន ប៉ុន្តែពួកយើងបានបដិសេធ ។ ហើយពួកយើងបាននិយាយថាៈ អល់ឡោះមិនបានបញ្ចុះអ្វីបន្តិចមកឡើយ ។ ពួកអ្នក(អ្នកនាំសារ និងអ្នករួមជំនឿជាមួយគាត់) គ្មានអ្វីក្រៅពីស្ថិតក្នុងភាពវង្វេងដ៏សែនឆ្ងាយនោះឡើយ ។

وَقَالُواْ لَوۡ كُنَّا نَسۡمَعُ أَوۡ نَعۡقِلُ مَا كُنَّا فِيٓ أَصۡحَٰبِ ٱلسَّعِيرِ ١٠

១០-ពួកគេបាននិយាយ(ទៅកាន់អ្នកយាមនរក) ទៀតថាៈ ប្រសិនបើពួកយើងធ្លាប់បានស្តាប់(អ្នកនាំសារ) ឬពួកយើងបានស្វែងយល់នោះ ពួកយើងពិតជាមិនស្ថិតក្នុងពួកនរកឡើយ ។

فَٱعۡتَرَفُواْ بِذَنۢبِهِمۡ فَسُحۡقٗا لِّأَصۡحَٰبِ

១១-ពេលនោះ ពួកគេបានទទួលស្គាល់នូវបាបកម្មរបស់ពួកគេ ។ ដូច្នេះ ការឃ្លាតឆ្ងាយ(ពីក្តីមេត្តាករុណារបស់អល់ឡោះ

ٱلسَّعِيرِ ﴿١١﴾

នោះ) គឺសម្រាប់ពួកឋាននរក ។

إِنَّ ٱلَّذِينَ يَخۡشَوۡنَ رَبَّهُم بِٱلۡغَيۡبِ لَهُم مَّغۡفِرَةٞ وَأَجۡرٞ كَبِيرٞ ﴿١٢﴾

១២-ពិតប្រាកដណាស់ បណ្ដាអ្នកដែលកោតខ្លាចម្ចាស់របស់ពួកគេដោយអាថិកំបាំង ពួកគេនឹងទទួលបាននូវការអភ័យទោស និងផលបុណ្យដ៏ធំធេង ។

وَأَسِرُّواْ قَوۡلَكُمۡ أَوِ ٱجۡهَرُواْ بِهِۦٓۖ إِنَّهُۥ عَلِيمُۢ بِذَاتِ ٱلصُّدُورِ ﴿١٣﴾

១៣-ហើយចូរពួកអ្នកលាក់បាំងនូវពាក្យសំដីរបស់ពួកអ្នក ឬពួកអ្នកលាតត្រដាងវាចុះ ពិតប្រាកដណាស់ ទ្រង់ដឹងបំផុតនូវអ្វីដែលមាននៅក្នុងចិត្ត ។

أَلَا يَعۡلَمُ مَنۡ خَلَقَ وَهُوَ ٱللَّطِيفُ ٱلۡخَبِيرُ ﴿١٤﴾

១៤-តើម្ចាស់ដែលបានបង្កើត(អ្វីៗទាំងអស់) មិនបានដឹងទេឬ? ហើយទ្រង់គឺជាអ្នកដែលទន់ភ្លន់ ដឹងជ្រួតជ្រាបបំផុត ។

هُوَ ٱلَّذِي جَعَلَ لَكُمُ ٱلۡأَرۡضَ ذَلُولٗا فَٱمۡشُواْ فِي مَنَاكِبِهَا وَكُلُواْ مِن رِّزۡقِهِۦۖ وَإِلَيۡهِ ٱلنُّشُورُ ﴿١٥﴾

១៥-ទ្រង់ជាអ្នកដែលបានបង្កើតផែនដីឱ្យមានភាពងាយស្រួលសម្រាប់ពួកអ្នក ។ ដូច្នេះ ចូរពួកអ្នកធ្វើដំណើរគ្រប់ទិសទីនៅលើវា ហើយចូរពួកអ្នកបរិភោគអំពីលាភសក្ការៈរបស់ទ្រង់ចុះ ។ ហើយការរស់ឡើងវិញ(ដើម្បីជំនុំជំរះ) គឺឆ្ពោះទៅរកទ្រង់តែមួយគត់ ។

ءَأَمِنتُم مَّن فِي ٱلسَّمَآءِ أَن يَخۡسِفَ بِكُمُ ٱلۡأَرۡضَ فَإِذَا هِيَ تَمُورُ ﴿١٦﴾

១៦-តើពួកអ្នកគិតថាមានសុវត្ថិភាពពីម្ចាស់ដែលនៅលើមេឃក្នុងករណីដែលទ្រង់នឹងធ្វើឱ្យផែនដីស្រូបយកពួកអ្នក ខណៈដែលវាកំពុងរញ្ជួយឬ?

أَمۡ أَمِنتُم مَّن فِي ٱلسَّمَآءِ أَن يُرۡسِلَ عَلَيۡكُمۡ حَاصِبٗاۖ فَسَتَعۡلَمُونَ كَيۡفَ نَذِيرِ ﴿١٧﴾

១៧-ឬមួយពួកអ្នកគិតថាមានសុវត្ថិភាពពីម្ចាស់ដែលនៅលើមេឃក្នុងករណីដែលទ្រង់នឹងបញ្ជូនព្យុះថ្មទៅលើពួកអ្នកឬ? ដូច្នេះ ពួកអ្នកនឹងដឹងថា តើការព្រមានរបស់យើងយ៉ាងដូចម្ដេច?

وَلَقَدۡ كَذَّبَ ٱلَّذِينَ مِن قَبۡلِهِمۡ فَكَيۡفَ كَانَ نَكِيرِ ﴿١٨﴾

១៨-ហើយជាការពិតណាស់ ពួកជំនាន់មុនពួកគេក៏បានបដិសេធ (នឹងបណ្ដាអ្នកនាំសារ) ដែរ ។ ដូច្នេះតើទារុណកម្មរបស់យើង(ចំពោះពួកគេ) យ៉ាងដូចម្ដេច?

أَوَلَمۡ يَرَوۡاْ إِلَى ٱلطَّيۡرِ فَوۡقَهُمۡ صَٰٓفَّٰتٖ وَيَقۡبِضۡنَۚ مَا يُمۡسِكُهُنَّ إِلَّا ٱلرَّحۡمَٰنُۚ إِنَّهُۥ بِكُلِّ شَيۡءِۭ بَصِيرٌ ﴿١٩﴾

១៩-តើពួកគេមិនបានសម្លឹងមើលសត្វដែលហើរត្រដាងស្លាប និងក្ដោបស្លាបរបស់ពួកវានៅពីលើពួកគេទេឬ? គ្មានអ្នកណាអាចទ្រពួកវា(មិនឱ្យធ្លាក់) ក្រៅពីម្ចាស់ដ៏មហាសប្បុរសនោះឡើយ ។ ពិតប្រាកដណាស់ ទ្រង់មហាឃើញនូវអ្វីៗទាំងអស់ ។

أَمَّنۡ هَٰذَا ٱلَّذِي هُوَ جُندٞ لَّكُمۡ يَنصُرُكُم مِّن

២០-តើមានអ្នកណាដែលជាបក្សពួករបស់ពួកអ្នកអាចជួយពួក

دُونِ ٱلرَّحۡمَٰنِۚ إِنِ ٱلۡكَٰفِرُونَ إِلَّا فِي غُرُورٍ ﴿٢٠﴾

អ្នកក្រៅពីម្ចាស់ដ៏មហាសប្បុរសនោះ? ពួកដែលគ្មានជំនឿគ្មានអ្វីក្រៅពីស្ថិតនៅក្នុងការបោកប្រាស់(របស់ស្ហៃតន)នោះឡើយ ។

أَمَّنۡ هَٰذَا ٱلَّذِي يَرۡزُقُكُمۡ إِنۡ أَمۡسَكَ رِزۡقَهُۥۚ بَل لَّجُّواْ فِي عُتُوّٖ وَنُفُورٍ ﴿٢١﴾

២១-តើមានអ្នកណាដែលជាអ្នកផ្តល់លាភសក្ការៈដល់ពួកអ្នក ប្រសិនបើទ្រង់ផ្តាច់លាភសក្ការៈរបស់ទ្រង់នោះ? ផ្ទុយទៅវិញ ពួកគេនៅតែស្ថិតនៅក្នុងភាពចចេសរឹងរូស និងគេចចេញពីការពិតដដែល ។

أَفَمَن يَمۡشِي مُكِبًّا عَلَىٰ وَجۡهِهِۦٓ أَهۡدَىٰٓ أَمَّن يَمۡشِي سَوِيًّا عَلَىٰ صِرَٰطٖ مُّسۡتَقِيمٖ ﴿٢٢﴾

២២-ដូច្នេះ តើអ្នកដែលដើរឱនមុខរបស់គេ(មិនដឹងទិសដៅ) ទទួលបានការចង្អុលបង្ហាញជាង ឬមួយអ្នកដែលដើរត្រង់(ដឹងទិសដៅច្បាស់លាស់)នៅលើមាគ៌ាដ៏ត្រឹមត្រូវ?

قُلۡ هُوَ ٱلَّذِيٓ أَنشَأَكُمۡ وَجَعَلَ لَكُمُ ٱلسَّمۡعَ وَٱلۡأَبۡصَٰرَ وَٱلۡأَفۡـِٔدَةَۖ قَلِيلٗا مَّا تَشۡكُرُونَ ﴿٢٣﴾

២៣-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ទ្រង់ជាអ្នកដែលបានបង្កើតពួកអ្នក ហើយទ្រង់បានធ្វើឱ្យពួកអ្នកស្តាប់ឮ និងមើលឃើញ និងមានបេះដូង(ចេះគិតពិចារណា) ។ អ្វីដែលពួកអ្នកថ្លែងអំណរ-គុណគឺតិចតួចបំផុត ។

قُلۡ هُوَ ٱلَّذِي ذَرَأَكُمۡ فِي ٱلۡأَرۡضِ وَإِلَيۡهِ تُحۡشَرُونَ ﴿٢٤﴾

២៤-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ទ្រង់តែមួយគត់គឺជាអ្នកដែលបង្កើតពួកអ្នកឱ្យមានជីវិតនៅលើផែនដី ហើយពួកអ្នកនឹងត្រូវប្រមូលផ្តុំទៅកាន់ទ្រង់វិញ(នៅថ្ងៃបរលោក) ។

وَيَقُولُونَ مَتَىٰ هَٰذَا ٱلۡوَعۡدُ إِن كُنتُمۡ صَٰدِقِينَ ﴿٢٥﴾

២៥-ហើយពួកគេ(ពួកប្រឆាំង)និយាយថា: តើថ្ងៃសន្យានេះ (បរលោក)នៅពេលណា? ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតមែននោះ ។

قُلۡ إِنَّمَا ٱلۡعِلۡمُ عِندَ ٱللَّهِ وَإِنَّمَآ أَنَا۠ نَذِيرٞ مُّبِينٞ ﴿٢٦﴾

២៦-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ពិតប្រាកដណាស់ ការដឹង (ពីថ្ងៃបរលោក)គឺមានតែអល់ឡោះ ។ ហើយជាការពិតណាស់ ខ្ញុំគ្រាន់តែជាអ្នកដាស់តឿនព្រមានដ៏ច្បាស់លាស់ប៉ុណ្ណោះ ។

فَلَمَّا رَأَوۡهُ زُلۡفَةٗ سِيٓـَٔتۡ وُجُوهُ ٱلَّذِينَ كَفَرُواْ وَقِيلَ هَٰذَا ٱلَّذِي كُنتُم بِهِۦ تَدَّعُونَ ﴿٢٧﴾

២៧-ដូច្នេះ នៅពេលពួកគេ(ពួកប្រឆាំង)បានឃើញទារុណកម្មនៅជិតពួកគេ ទឹកមុខរបស់ពួកដែលប្រឆាំងនោះប្រែជាខ្មៅ(ដោយក្តីព្រួយបារម្ភ) ។ ហើយមានគេនិយាយថា: នេះជាអ្វីដែលពួកអ្នកធ្លាប់បានទាមទារវា ។

قُلۡ أَرَءَيۡتُمۡ إِنۡ أَهۡلَكَنِيَ ٱللَّهُ وَمَن مَّعِيَ

២៨-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើអល់ឡោះបានធ្វើឱ្យខ្ញុំ និងអ្នកដែលរួមជំនឿជាមួយខ្ញុំ

ស្លាប់ ឬទ្រង់អាណិតស្រឡាញ់ពួកយើង តើមានអ្នកណាដែលអាចការពារពួកដែលប្រឆាំងអំពីទារុណកម្មដ៏សែនឈឺចាប់បាននោះ?

២៩-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ទ្រង់ជាម្ចាស់មហាសប្បុរសដែលពួកយើងមានជំនឿលើទ្រង់ ។ ហើយចំពោះទ្រង់តែមួយគត់ដែលពួកយើងប្រគល់ការទុកចិត្ត ។ ហើយពួកអ្នកនឹងដឹងថា តើអ្នកណាដែលស្ថិតក្នុងភាពវង្វេងដ៏ច្បាស់លាស់នោះ?

៣០-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ចូរពួកអ្នកប្រាប់ខ្ញុំមក ប្រសិនបើទឹកផឹករបស់ពួកអ្នកបានរីងស្ងួត តើមានអ្នកណាអាចនាំប្រភពទឹកមកឱ្យពួកអ្នកវិញ?

## ជំពូកអាល់កឡាំ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១- នូន ។ អល់ឡោះស្បថនឹងស្លាបប៉ាកា និងអ្វីដែលពួកគេ (ម៉ាឡាអ៊ីកាត់ និងមនុស្សលោក) កំពុងសរសេរ ។

២-ដោយសារតែនៀកម៉ាត់នៃម្ចាស់របស់អ្នក(មូហាំម៉ាត់)នោះ អ្នកមិនមែនជាអ្នកដែលវិកលចរិតឡើយ ។

៣-ហើយពិតប្រាកដណាស់ អ្នកនឹងទទួលបានផលបុណ្យដោយគ្មានទីបញ្ចប់ឡើយ ។

៤-ហើយពិតប្រាកដណាស់ អ្នកមានអត្តចរិតដ៏ប្រពៃបំផុត ។

៥-ដូច្នេះអ្នក(មូហាំម៉ាត់)នឹងឃើញ ហើយពួកគេ(ពួកគ្មានជំនឿ)ក៏នឹងឃើញដែរ ។

៦-តើអ្នកណាក្នុងចំណោមពួកអ្នកជាមនុស្សវិកលចរិតនោះ?

៧-ពិតប្រាកដណាស់ ម្ចាស់របស់អ្នក ទ្រង់ដឹងបំផុតចំពោះអ្នកដែលបានវង្វេងចេញពីមាគ៌ារបស់ទ្រង់ ហើយទ្រង់ក៏ដឹងបំផុតដែរចំពោះបណ្ដាអ្នកដែលទទួលបាននូវការចង្អុលបង្ហាញ ។

៨-ដូច្នេះ ចូរអ្នកកុំធ្វើតាមពួកដែលបដិសេធ(នឹងអាយ៉ាត់ និង

أَوْ رَحِمَنَا فَمَن يُجِيرُ ٱلْكَـٰفِرِينَ مِنْ عَذَابٍ أَلِيمٍ ﴿٢٨﴾

قُلْ هُوَ ٱلرَّحْمَـٰنُ ءَامَنَّا بِهِۦ وَعَلَيْهِ تَوَكَّلْنَا ۖ فَسَتَعْلَمُونَ مَنْ هُوَ فِى ضَلَـٰلٍ مُّبِينٍ ﴿٢٩﴾

قُلْ أَرَءَيْتُمْ إِنْ أَصْبَحَ مَآؤُكُمْ غَوْرًا فَمَن يَأْتِيكُم بِمَآءٍ مَّعِينٍۭ ﴿٣٠﴾

سورة القلم

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

نٓ ۚ وَٱلْقَلَمِ وَمَا يَسْطُرُونَ ﴿١﴾

مَآ أَنتَ بِنِعْمَةِ رَبِّكَ بِمَجْنُونٍ ﴿٢﴾

وَإِنَّ لَكَ لَأَجْرًا غَيْرَ مَمْنُونٍ ﴿٣﴾

وَإِنَّكَ لَعَلَىٰ خُلُقٍ عَظِيمٍ ﴿٤﴾

فَسَتُبْصِرُ وَيُبْصِرُونَ ﴿٥﴾

بِأَييِّكُمُ ٱلْمَفْتُونُ ﴿٦﴾

إِنَّ رَبَّكَ هُوَ أَعْلَمُ بِمَن ضَلَّ عَن سَبِيلِهِۦ وَهُوَ أَعْلَمُ بِٱلْمُهْتَدِينَ ﴿٧﴾

فَلَا تُطِعِ ٱلْمُكَذِّبِينَ ﴿٨﴾

អ្នកនាំសាររបស់យើង) ឱ្យសោះ ។

៩-ពួកគេស្រឡាញ់ពេញចិត្តយ៉ាងខ្លាំង ប្រសិនបើអ្នក( មូហាំ-ម៉ាត់) ឯកភាព ហើយពួកគេក៏ឯកភាពវិញដែរ ។

១០-ហើយចូរអ្នកកុំធ្វើតាមពួកដែលស្បថបំពានដែលថោកទាបបំផុតនោះឱ្យសោះ ។

១១-គឺអ្នកដែលចូលចិត្តបរិហាកេរ្តិ៍គេ និងដើរចាក់រុកគេ ។

១២-អ្នកដែលកំណាញ់ក្នុងផ្លូវល្អ និងចូលចិត្តបំពាន និងចូលចិត្តប្រព្រឹត្តបាបកម្ម ។

១៣-គេជាមនុស្សដែលប្រឆាំងយ៉ាងខ្លាំង លើសពីនេះទៀត គេជាមនុស្សឃោរឃៅបំផុត ។

១៤-ដោយសារតែគេមានទ្រព្យសម្បត្តិ និងកូនជាច្រើន ។

១៥-នៅពេលដែលមានគេសូត្រអាយ៉ាត់ៗរបស់យើងឱ្យគេស្តាប់ គេបែរជានិយាយថា: នេះគ្រាន់តែជារឿងនិទានរបស់អ្នកជំនាន់មុនប៉ុណ្ណោះ ។

១៦-យើងនឹងដាក់សញ្ញាចំណាំលើច្រមុះរបស់គេជាមិនខាន ។

១៧-ពិតប្រាកដណាស់ យើងបានសាកល្បងពួកគេ( ពួកមូស្ហ-រីគីនម៉ាក្កះ) ដូចដែលយើងបានសាកល្បងចំពោះពួកដែលមានចំការជាច្រើនដែរ ខណៈដែលពួកគេបានស្បថថា: ពួកគេពិតជានឹងប្រមូលផលដំណាំនៅពេលព្រឹកព្រហាម ។

១៨-ដោយពួកគេមិននិយាយថា: អិនស្ហាអល់ឡោះ ( ប្រសិនបើអល់ឡោះមានចេតនា) ឡើយ ។

១៩-ពេលនោះភ្លើងមួយបានឆាបឆេះចំការនោះតាមបទបញ្ជានៃម្ចាស់របស់អ្នក ខណៈដែលពួកគេដេកលង់លក់នៅពេលយប់ ។

២០-ដូច្នេះ ចំការនោះក៏បានក្លាយជាពណ៌ខ្មៅដូចជាយប់ដែលងងឹតសូន្យសុង ។

وَدُّواْ لَوْ تُدْهِنُ فَيُدْهِنُونَ ٩

وَلَا تُطِعْ كُلَّ حَلَّافٍ مَّهِينٍ ١٠

هَمَّازٍ مَّشَّآءِۭ بِنَمِيمٍ ١١

مَّنَّاعٍ لِّلْخَيْرِ مُعْتَدٍ أَثِيمٍ ١٢

عُتُلِّۭ بَعْدَ ذَٰلِكَ زَنِيمٍ ١٣

أَن كَانَ ذَا مَالٍ وَبَنِينَ ١٤

إِذَا تُتْلَىٰ عَلَيْهِ ءَايَٰتُنَا قَالَ أَسَٰطِيرُ
ٱلْأَوَّلِينَ ١٥

سَنَسِمُهُۥ عَلَى ٱلْخُرْطُومِ ١٦

إِنَّا بَلَوْنَٰهُمْ كَمَا بَلَوْنَآ أَصْحَٰبَ ٱلْجَنَّةِ إِذْ
أَقْسَمُواْ لَيَصْرِمُنَّهَا مُصْبِحِينَ ١٧

وَلَا يَسْتَثْنُونَ ١٨

فَطَافَ عَلَيْهَا طَآئِفٌ مِّن رَّبِّكَ وَهُمْ
نَآئِمُونَ ١٩

فَأَصْبَحَتْ كَٱلصَّرِيمِ ٢٠

فَتَنَادَوْا۟ مُصْبِحِينَ ﴿٢١﴾

២១-ពេលនោះពួកគេបានស្រែកហៅគ្នានៅពេលព្រឹកព្រលឹម ថា

أَنِ ٱغْدُوا۟ عَلَىٰ حَرْثِكُمْ إِن كُنتُمْ صَٰرِمِينَ ﴿٢٢﴾

២២-ចូរពួកអ្នកធ្វើដំណើរទៅកាន់ចំការរបស់ពួកអ្នកចុះ ប្រសិនបើពួកអ្នកចង់ប្រមូលផលនោះ។

فَٱنطَلَقُوا۟ وَهُمْ يَتَخَٰفَتُونَ ﴿٢٣﴾

២៣-ពេលនោះពួកគេក៏នាំគ្នាធ្វើដំណើរ(ឆ្ពោះទៅចំការ)ដោយពួកគេនិយាយគ្នាតិចៗថា

أَن لَّا يَدْخُلَنَّهَا ٱلْيَوْمَ عَلَيْكُم مِّسْكِينٌ ﴿٢٤﴾

២៤-ដើម្បីកុំឱ្យអ្នកក្រីក្រណាម្នាក់ចូលទៅក្នុងចំការនោះទៅរកអ្នកនៅថ្ងៃនេះ។

وَغَدَوْا۟ عَلَىٰ حَرْدٍ قَٰدِرِينَ ﴿٢٥﴾

២៥-ហើយពួកគេស្រូតដំណើរតាំងពីព្រលឹម(ទៅកាន់ចំការនោះ)ក្នុងគោលបំណងរារាំងអ្នកក្រីក្រមិនឱ្យចូលទៅក្នុងចំការនោះ ដោយពួកគេគិតថា: ពួកគេមានលទ្ធភាពធ្វើដូច្នោះ។

فَلَمَّا رَأَوْهَا قَالُوٓا۟ إِنَّا لَضَآلُّونَ ﴿٢٦﴾

២៦-ហើយនៅពេលដែលពួកគេបានឃើញចំការនោះ ពួកគេក៏បានពោលថា: ពិតប្រាកដណាស់ ពួកយើងវង្វេងផ្លូវហើយ។

بَلْ نَحْنُ مَحْرُومُونَ ﴿٢٧﴾

២៧-ផ្ទុយទៅវិញ ពួកយើងទេត្រូវបានគេរារាំង(អំពីការប្រមូលផល)នោះ។

قَالَ أَوْسَطُهُمْ أَلَمْ أَقُل لَّكُمْ لَوْلَا تُسَبِّحُونَ ﴿٢٨﴾

២៨-អ្នកដែលមានប្រាជ្ញាល្អជាងគេក្នុងចំណោមពួកនោះបាននិយាយថា: តើខ្ញុំមិនបាននិយាយជាមួយពួកអ្នកទេឬថា: ហេតុអ្វីបានពួកអ្នកមិននិយាយថា អិនស្ហាអល់ឡោះ(ប្រសិនបើអល់ឡោះមានចេតនា)?

قَالُوا۟ سُبْحَٰنَ رَبِّنَآ إِنَّا كُنَّا ظَٰلِمِينَ ﴿٢٩﴾

២៩-ពួកគេបាននិយាយថា: ឱម្ចាស់របស់ពួកយើងមហាស្អាតស្អំ! ពិតប្រាកដណាស់ ពួកយើងគឺជាពួកដែលធ្លាប់បានបំពាន។

فَأَقْبَلَ بَعْضُهُمْ عَلَىٰ بَعْضٍ يَتَلَٰوَمُونَ ﴿٣٠﴾

៣០-បន្ទាប់មក ពួកគេបានដើរទៅរកគ្នា ដោយស្តីបន្ទោសគ្នាទៅវិញទៅមក។

قَالُوا۟ يَٰوَيْلَنَآ إِنَّا كُنَّا طَٰغِينَ ﴿٣١﴾

៣១-ពួកគេបាននិយាយថា: ឱវិនាសអន្តរាយហើយពួកយើង! ពិតប្រាកដណាស់ ពួកយើងគឺជាពួកដែលបំពាន។

عَسَىٰ رَبُّنَآ أَن يُبْدِلَنَا خَيْرًا مِّنْهَآ إِنَّآ إِلَىٰ رَبِّنَا

៣២-សង្ឃឹមថា ម្ចាស់របស់ពួកយើងនឹងជំនួសឱ្យពួកយើងវិញនូវប្រការល្អជាងចំការនោះទៅទៀត។ ពិតប្រាកដណាស់ ពួកយើង

رَٰغِبُونَ ﴿٣٢﴾

សង្ឃឹមទៅចំពោះម្ចាស់របស់យើងតែមួយគត់ថានឹងទទួលបានការអភ័យទោស ។

كَذَٰلِكَ ٱلۡعَذَابُۖ وَلَعَذَابُ ٱلۡأٓخِرَةِ أَكۡبَرُۚ لَوۡ كَانُواْ يَعۡلَمُونَ ﴿٣٣﴾

៣៣-នោះគ្រាន់តែជាទារុណកម្ម(លោកិយ)ប៉ុណ្ណោះ តែទារុណកម្មនៅថ្ងៃបរលោកវិញពិតជាធ្ងន់ធ្ងរជាងនេះទៅទៀត ប្រសិនបើពួកគេបានដឹង ។

إِنَّ لِلۡمُتَّقِينَ عِندَ رَبِّهِمۡ جَنَّٰتِ ٱلنَّعِيمِ ﴿٣٤﴾

៣៤-ពិតប្រាកដណាស់ បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ គឺទទួលបានឋានសួគ៌ណាអ៊ីមពីម្ចាស់របស់ពួកគេជាមិនខាន ។

أَفَنَجۡعَلُ ٱلۡمُسۡلِمِينَ كَٱلۡمُجۡرِمِينَ ﴿٣٥﴾

៣៥-ដូច្នេះ តើឱ្យយើងចាត់ទុកបណ្ដាអ្នកមូស្លីម(ដែលគោរពតាមបទបញ្ជារបស់យើង) ដូចពួកដែលប្រព្រឹត្តបាបកម្មឬ?

مَا لَكُمۡ كَيۡفَ تَحۡكُمُونَ ﴿٣٦﴾

៣៦-តើពួកអ្នក(ពួកដែលប្រឆាំងនៅម៉ាក្កះ) មានអំណះអំណាងអ្វីបានជាពួកអ្នកសម្រេចសេចក្ដីដូច្នោះ?

أَمۡ لَكُمۡ كِتَٰبٞ فِيهِ تَدۡرُسُونَ ﴿٣٧﴾

៣៧-ឬមួយពួកអ្នកមានគម្ពីរណាមួយដែលពួកអ្នកកំពុងសិក្សាវា?

إِنَّ لَكُمۡ فِيهِ لَمَا تَخَيَّرُونَ ﴿٣٨﴾

៣៨-ដោយនៅក្នុងគម្ពីរនោះពួកអ្នកពិតជាអាចជ្រើសរើសតាមប្រាថ្នាបានមែនឬ?

أَمۡ لَكُمۡ أَيۡمَٰنٌ عَلَيۡنَا بَٰلِغَةٌ إِلَىٰ يَوۡمِ ٱلۡقِيَٰمَةِ إِنَّ لَكُمۡ لَمَا تَحۡكُمُونَ ﴿٣٩﴾

៣៩-ឬមួយពួកអ្នកមានពាក្យសម្បថព្រមព្រៀងមួយអំពីយើង រហូតដល់ថ្ងៃបរលោក ដែលអ្នកពិតជាអាចកាត់សេចក្ដីតាមអ្វីដែលពួកអ្នកចង់ឬ?

سَلۡهُمۡ أَيُّهُم بِذَٰلِكَ زَعِيمٌ ﴿٤٠﴾

៤០-ចូរអ្នក(មូហាំម៉ាត់) សួរពួកគេថា: តើអ្នកណាម្នាក់ក្នុងចំណោមពួកគេជាអ្នកទទួលខុសត្រូវចំពោះរឿងកាត់សេចក្ដីនោះ?

أَمۡ لَهُمۡ شُرَكَآءُ فَلۡيَأۡتُواْ بِشُرَكَآئِهِمۡ إِن كَانُواْ صَٰدِقِينَ ﴿٤١﴾

៤១-ឬមួយពួកគេមានព្រះនានា(ផ្សេងពីអល់ឡោះ)? (ប្រសិនបើមានមែន) ដូច្នេះ ចូរឱ្យពួកគេនាំព្រះនានារបស់ពួកគេនោះមក ប្រសិនបើពួកគេជាពួកដែលត្រឹមត្រូវមែននោះ ។

يَوۡمَ يُكۡشَفُ عَن سَاقٖ وَيُدۡعَوۡنَ إِلَى ٱلسُّجُودِ فَلَا يَسۡتَطِيعُونَ ﴿٤٢﴾

៤២-នៅថ្ងៃដែលកំភួនជើងត្រូវគេបញ្ចេញ(ភាពតានតឹង និងទុក្ខវេទនានៅថ្ងៃបរលោក) ហើយពួកគេ(មនុស្សលោក) ត្រូវគេអំពាវនាវឱ្យស៊ូជូត តែពួកគេ(ពួកប្រឆាំង) មិនអាចស៊ូជូតបានឡើយ ។

៤៣-ភ្នែករបស់ពួកគេទម្លាក់ចុះ ខណៈដែលការលំបាកគ្រប ដណ្តប់ពួកគេ។ ហើយជាការពិតណាស់ ពួកគេធ្លាប់ត្រូវបានគេអំពាវនាវឱ្យស៊ូជូត(តែពួកគេមិនបានស៊ូជូតឡើយ) ខណៈដែលពួកគេមានសុខភាពល្អនោះ។

خَٰشِعَةً أَبۡصَٰرُهُمۡ تَرۡهَقُهُمۡ ذِلَّةٞۖ وَقَدۡ كَانُواْ يُدۡعَوۡنَ إِلَى ٱلسُّجُودِ وَهُمۡ سَٰلِمُونَ ﴿٤٣﴾

៤៤-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)ទុកកិច្ចការនោះឱ្យយើង ហើយអ្នកណាដែលបដិសេធនឹងពាក្យសំដីនេះ(គម្ពីរគួរអាន) យើងនឹងទាញយកពួកគេបន្តិចម្តងៗ(ទៅរកភាពអន្តរាយ)ដោយពួកគេមិនដឹងខ្លួនឡើយ។

فَذَرۡنِي وَمَن يُكَذِّبُ بِهَٰذَا ٱلۡحَدِيثِۖ سَنَسۡتَدۡرِجُهُم مِّنۡ حَيۡثُ لَا يَعۡلَمُونَ ﴿٤٤﴾

៤៥-ហើយយើងពន្យារពេលសម្រាប់ពួកគេ។ ពិតប្រាកដណាស់ ល្បិចកលរបស់យើងគឺខ្លាំងក្លាបំផុត។

وَأُمۡلِي لَهُمۡۚ إِنَّ كَيۡدِي مَتِينٌ ﴿٤٥﴾

៤៦-តើអ្នក(មូហាំម៉ាត់)សុំកម្រៃពីពួកគេ(ចំពោះការអំពាវនាវរបស់អ្នក) រួចមកពួកគេត្រូវទទួលបន្ទុកធ្ងន់ធ្ងរពីការជំពាក់បំណុល(របស់អ្នក)នោះឬ?

أَمۡ تَسۡـَٔلُهُمۡ أَجۡرٗا فَهُم مِّن مَّغۡرَمٖ مُّثۡقَلُونَ ﴿٤٦﴾

៤៧-ឬមួយពួកគេដឹងពីរឿងអាថិកំបាំង ហើយពួកគេកត់ត្រាវាទុក(សម្រាប់ប្រាប់ដល់មនុស្សលោក)ឬ?

أَمۡ عِندَهُمُ ٱلۡغَيۡبُ فَهُمۡ يَكۡتُبُونَ ﴿٤٧﴾

៤៨-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់ចំពោះច្បាប់នៃម្ចាស់របស់អ្នក ហើយចូរអ្នកកុំធ្វើដូចអ្នកដែលនៅក្នុងពោះត្រីហ៊្វូត(យូនូស)នៅពេលដែលគាត់បានបួងសួងសុំ(ពីម្ចាស់របស់គាត់) ខណៈដែលគាត់ពោរពេញដោយក្តីទុក្ខព្រួយ។

فَٱصۡبِرۡ لِحُكۡمِ رَبِّكَ وَلَا تَكُن كَصَاحِبِ ٱلۡحُوتِ إِذۡ نَادَىٰ وَهُوَ مَكۡظُومٞ ﴿٤٨﴾

៤៩-ប្រសិនបើគ្មាននៀកម៉ាត់ពីម្ចាស់របស់គាត់ទៅដល់គាត់ទេនោះ គាត់ពិតជានឹងត្រូវគេបោះបង់ចោលនៅឯទីវាលដែលគ្មានអ្វីសោះ ខណៈដែលគាត់ត្រូវគេស្តីបន្ទោស។

لَّوۡلَآ أَن تَدَٰرَكَهُۥ نِعۡمَةٞ مِّن رَّبِّهِۦ لَنُبِذَ بِٱلۡعَرَآءِ وَهُوَ مَذۡمُومٞ ﴿٤٩﴾

៥០-ក្រោយមកម្ចាស់របស់គាត់បានជ្រើសរើសគាត់(ជាអ្នកនាំសារ) ព្រមទាំងធ្វើឱ្យគាត់ស្ថិតក្នុងចំណោមអ្នកដែលសាងអំពើល្អត្រឹមត្រូវ។

فَٱجۡتَبَٰهُ رَبُّهُۥ فَجَعَلَهُۥ مِنَ ٱلصَّٰلِحِينَ ﴿٥٠﴾

៥១-ហើយពិតប្រាកដណាស់ ពួកដែលគ្មានជំនឿស្ទើរតែធ្វើឱ្យអ្នកមានគ្រោះថ្នាក់ដោយសារតែការសម្លឹងមើលរបស់ពួកគេនៅ

وَإِن يَكَادُ ٱلَّذِينَ كَفَرُواْ لَيُزۡلِقُونَكَ بِأَبۡصَٰرِهِمۡ لَمَّا سَمِعُواْ ٱلذِّكۡرَ وَيَقُولُونَ إِنَّهُۥ لَمَجۡنُونٞ ﴿٥١﴾

ពេលដែលពួកគេបានស្ដាប់គម្ពីរគួរអាន ហើយពួកគេថែមទាំងនិយាយថាៈ ពិតប្រាកដណាស់ គាត់គឺជាមនុស្សវិកលចរិត ។

៥២-ហើយគម្ពីរគួរអានគ្មានអ្វីក្រៅពីការរំលឹកដល់ពិភពទាំងអស់នោះឡើយ ។

وَمَا هُوَ إِلَّا ذِكۡرٞ لِّلۡعَٰلَمِينَ ٥٢

## ជំពូកអាល់ហាក់កោះ

## سورة الحاقة

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-ថ្ងៃបរលោក (ជាថ្ងៃដែលនឹងកើតឡើងពិតប្រាកដ) ។

ٱلۡحَآقَّةُ ١

២-អ្វីទៅជាថ្ងៃបរលោកនោះ?

مَا ٱلۡحَآقَّةُ ٢

៣-ហើយអ្វីដែលធ្វើឱ្យអ្នកដឹងថាវាជាថ្ងៃបរលោកនោះ?

وَمَآ أَدۡرَىٰكَ مَا ٱلۡحَآقَّةُ ٣

៤-ក្រុមសាមូដ និងអាដបានបដិសេធនឹងថ្ងៃបរលោក ។

كَذَّبَتۡ ثَمُودُ وَعَادُۢ بِٱلۡقَارِعَةِ ٤

៥-រីឯក្រុមសាមូដ ពួកគេត្រូវបានគេបំផ្លាញដោយសំឡេងស្រែកមួយយ៉ាងខ្លាំង ។

فَأَمَّا ثَمُودُ فَأُهۡلِكُواْ بِٱلطَّاغِيَةِ ٥

៦-ហើយចំណែកឯក្រុមអាដវិញ ពួកគេត្រូវបានគេបំផ្លាញដោយខ្យល់ព្យុះដ៏ត្រជាក់បំផុត ។

وَأَمَّا عَادٞ فَأُهۡلِكُواْ بِرِيحٖ صَرۡصَرٍ عَاتِيَةٖ ٦

៧-ដែលទ្រង់បានបញ្ជាវាឱ្យបក់បោកពួកគេយ៉ាងខ្លាំងរយៈពេលប្រាំពីរយប់ និងប្រាំបីថ្ងៃជាប់ៗគ្នា ។ រួចមកអ្នកនឹងឃើញក្រុមនោះដួលស្លាប់ នៅពេលនោះពួកគេហាក់ដូចជាដើមល្មើដែលរលំ ។

سَخَّرَهَا عَلَيۡهِمۡ سَبۡعَ لَيَالٖ وَثَمَٰنِيَةَ أَيَّامٍ
حُسُومٗاۖ فَتَرَى ٱلۡقَوۡمَ فِيهَا صَرۡعَىٰ كَأَنَّهُمۡ
أَعۡجَازُ نَخۡلٍ خَاوِيَةٖ ٧

៨-ដូច្នេះ តើអ្នកឃើញពួកគេនៅសេសសល់ដែរឬទេ?

فَهَلۡ تَرَىٰ لَهُم مِّنۢ بَاقِيَةٖ ٨

៩-ហើយហ្វៀរអោន និងអ្នកដែលពីមុនគេ និងក្រុមលូតសុទ្ធតែបានប្រព្រឹត្តបាបកម្ម ។

وَجَآءَ فِرۡعَوۡنُ وَمَن قَبۡلَهُۥ وَٱلۡمُؤۡتَفِكَٰتُ
بِٱلۡخَاطِئَةِ ٩

១០-ហើយពួកគេថែមទាំងបានប្រឆាំងនឹងអ្នកនាំសារនៃម្ចាស់របស់ពួកគេទៀតផង ។ ដូច្នេះ ទ្រង់បានធ្វើទារុណកម្មពួកគេនូវទារុណកម្មមួយដ៏ធ្ងន់ធ្ងរ ។

فَعَصَوۡاْ رَسُولَ رَبِّهِمۡ فَأَخَذَهُمۡ أَخۡذَةٗ
رَّابِيَةً ١٠

إِنَّا لَمَّا طَغَا ٱلۡمَآءُ حَمَلۡنَٰكُمۡ فِي ٱلۡجَارِيَةِ ﴿١١﴾

១១-ពិតប្រាកដណាស់ យើងបានដឹកពួកអ្នកនៅលើសំពៅនៅពេលដែលទឹកជំនន់ឡើងហួសកំរិត ។

لِنَجۡعَلَهَا لَكُمۡ تَذۡكِرَةٗ وَتَعِيَهَآ أُذُنٞ وَٰعِيَةٞ ﴿١٢﴾

១២-ដើម្បីយើងទុកវា សម្រាប់ពួកអ្នកធ្វើជាមេរៀនមួយ និងត្រចៀកដែលបានស្តាប់ឮយកចិត្តទុកដាក់ចំពោះវា ។

فَإِذَا نُفِخَ فِي ٱلصُّورِ نَفۡخَةٞ وَٰحِدَةٞ ﴿١٣﴾

១៣-ហើយនៅពេលដែលត្រែត្រូវបានគេផ្លុំលើកទីមួយ ។

وَحُمِلَتِ ٱلۡأَرۡضُ وَٱلۡجِبَالُ فَدُكَّتَا دَكَّةٗ وَٰحِدَةٗ ﴿١٤﴾

១៤-ហើយផែនដី និងភ្នំត្រូវបានគេលើកចេញ(ពីទីកន្លែងរបស់វា) រួចវាទាំងពីរក៏បែកខ្ទេចខ្ទីតែម្តង ។

فَيَوۡمَئِذٖ وَقَعَتِ ٱلۡوَاقِعَةُ ﴿١٥﴾

១៥-ថ្ងៃនោះហើយគឺជាថ្ងៃបរលោកបានកើតឡើង ។

وَٱنشَقَّتِ ٱلسَّمَآءُ فَهِيَ يَوۡمَئِذٖ وَاهِيَةٞ ﴿١٦﴾

១៦-ហើយមេឃក៏បានបែកខ្ទេចខ្ទី ហើយនៅថ្ងៃនោះវាក្លាយទៅជាទន់ ។

وَٱلۡمَلَكُ عَلَىٰٓ أَرۡجَآئِهَاۚ وَيَحۡمِلُ عَرۡشَ رَبِّكَ فَوۡقَهُمۡ يَوۡمَئِذٖ ثَمَٰنِيَةٞ ﴿١٧﴾

១៧-ហើយម៉ាឡាអ៊ីកាត់គឺនៅគ្រប់ជ្រុងនៃមេឃ ។ ហើយនៅថ្ងៃនោះមានម៉ាឡាអ៊ីកាត់ប្រាំបីរូបទ្រអារ៉ស្ហនៃម្ចាស់របស់អ្នកនៅពីលើពួកគេ ។

يَوۡمَئِذٖ تُعۡرَضُونَ لَا تَخۡفَىٰ مِنكُمۡ خَافِيَةٞ ﴿١٨﴾

១៨-នៅថ្ងៃនោះពួកអ្នកនឹងត្រូវគេនាំមកបង្ហាញ(នៅចំពោះមុខអល់ឡោះ) ដោយគ្មានភាពអាថ៌កំបាំងណាមួយរបស់ពួកអ្នកអាចលាក់បាំងបានឡើយ ។

فَأَمَّا مَنۡ أُوتِيَ كِتَٰبَهُۥ بِيَمِينِهِۦ فَيَقُولُ هَآؤُمُ ٱقۡرَءُواْ كِتَٰبِيَهۡ ﴿١٩﴾

១៩-រីឯអ្នកណាហើយដែលត្រូវបានគេប្រគល់សៀវភៅកំណត់ហេតុរបស់គេនៅដៃស្តាំរបស់គេនោះ គេនឹងនិយាយ(ទៅកាន់គ្នារបស់គេ)ថា: ចូរពួកអ្នកយកសៀវភៅកំណត់ហេតុរបស់ខ្ញុំទៅអានចុះ ។

إِنِّي ظَنَنتُ أَنِّي مُلَٰقٍ حِسَابِيَهۡ ﴿٢٠﴾

២០-ពិតប្រាកដណាស់ ខ្ញុំជឿជាក់យ៉ាងច្បាស់ថា ខ្ញុំពិតជានឹងទទួលបានផលបុណ្យរបស់ខ្ញុំដូចនេះ ។

فَهُوَ فِي عِيشَةٖ رَّاضِيَةٖ ﴿٢١﴾

២១-ហើយគេនឹងរស់នៅដោយក្តីគាប់ចិត្តជាទីបំផុត

فِي جَنَّةٍ عَالِيَةٖ ﴿٢٢﴾

២២-នៅក្នុងឋានសួគ៌ដ៏ខ្ពង់ខ្ពស់ ។

قُطُوفُهَا دَانِيَةٞ ﴿٢٣﴾

២៣-ផ្លែឈើគ្រប់ប្រភេទនៅជិតគេបំផុត ។

٢٤ كُلُوا۟ وَٱشْرَبُوا۟ هَنِيٓـًٔۢا بِمَآ أَسْلَفْتُمْ فِى ٱلْأَيَّامِ ٱلْخَالِيَةِ

២៤-ចូរពួកអ្នកបរិភោគ និងផឹកដោយរីករាយ ដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានសាងកន្លងមកនៅក្នុងលោកិយចុះ ។

٢٥ وَأَمَّا مَنْ أُوتِىَ كِتَـٰبَهُۥ بِشِمَالِهِۦ فَيَقُولُ يَـٰلَيْتَنِى لَمْ أُوتَ كِتَـٰبِيَهْ

២៥-រីឯអ្នកណាហើយដែលគេបានប្រគល់នូវសៀវភៅកំណត់ហេតុរបស់គេនៅដៃឆ្វេងរបស់គេ គេនឹងនិយាយថា: ឱអនិច្ចាខ្លួនខ្ញុំអើយ! សង្ឃឹមថាខ្ញុំមិនត្រូវគេប្រគល់សៀវភៅកំណត់ហេតុរបស់ខ្ញុំនេះឡើយ ។

٢٦ وَلَمْ أَدْرِ مَا حِسَابِيَهْ

២៦-ហើយខ្ញុំក៏មិនទាន់ដឹងដែរថា អ្វីទៅជាលទ្ធផលរបស់ខ្ញុំនោះ ។

٢٧ يَـٰلَيْتَهَا كَانَتِ ٱلْقَاضِيَةَ

២៧-ឱអនិច្ចា! សង្ឃឹមថាសេចក្ដីស្លាប់(របស់ខ្ញុំក្នុងលោកិយ) បានបញ្ចប់អ្វីៗទាំងអស់ ។

٢٨ مَآ أَغْنَىٰ عَنِّى مَالِيَهْ ۜ

២៨-ទ្រព្យសម្បត្តិរបស់ខ្ញុំគ្មានប្រយោជន៍អ្វីដល់ខ្ញុំឡើយ ។

٢٩ هَلَكَ عَنِّى سُلْطَـٰنِيَهْ

២៩-អំណាចរបស់ខ្ញុំក៏បានបាត់បង់ពីខ្ញុំដែរ ។

٣٠ خُذُوهُ فَغُلُّوهُ

៣០-(មានគេនិយាយទៅកាន់អ្នកយាមទ្វារនរកថា) ចូរអ្នកចាប់ជននេះ រួចដាក់ច្រវាក់(ក និងដៃជើង)គេ ។

٣١ ثُمَّ ٱلْجَحِيمَ صَلُّوهُ

៣១-បន្ទាប់មក បោះគេចូលក្នុងភ្លើងនរកចុះ ។

٣٢ ثُمَّ فِى سِلْسِلَةٍ ذَرْعُهَا سَبْعُونَ ذِرَاعًا فَٱسْلُكُوهُ

៣២-បន្ទាប់មក ចូរពួកអ្នកដោតគេនឹងច្រវាក់ដែលមានប្រវែងរបស់វាចិតសិបហត្ថចុះ ។

٣٣ إِنَّهُۥ كَانَ لَا يُؤْمِنُ بِٱللَّهِ ٱلْعَظِيمِ

៣៣-ពិតប្រាកដណាស់ គេមិនធ្លាប់មានជំនឿលើអល់ឡោះដ៏មហាធំធេងឡើយ ។

٣٤ وَلَا يَحُضُّ عَلَىٰ طَعَامِ ٱلْمِسْكِينِ

៣៤-ហើយគេមិនដែលជំរុញគ្នាលើការផ្ដល់ចំណីអាហារដល់អ្នកក្រីក្រឡើយ ។

٣٥ فَلَيْسَ لَهُ ٱلْيَوْمَ هَـٰهُنَا حَمِيمٌ

៣៥-ដូច្នេះ គ្មានមិត្តភក្ដិណាជួយគេឡើយនៅថ្ងៃនេះ(ថ្ងៃបរលោក) ។

٣٦ وَلَا طَعَامٌ إِلَّا مِنْ غِسْلِينٍ

៣៦-ហើយក៏គ្មានចំណីអាហារណាក្រៅពីខ្ទុះឈាម ។

٣٧- ដែលគ្មានអ្នកណាស៊ីវា ក្រៅពីពួកប្រព្រឹត្តបាបកម្មឡើយ ។

لَّا يَأۡكُلُهُۥٓ إِلَّا ٱلۡخَٰطِـُٔونَ ٣٧

៣៨-យើងស្បថនឹងអ្វីដែលពួកអ្នកឃើញ

فَلَآ أُقۡسِمُ بِمَا تُبۡصِرُونَ ٣٨

៣៩-និងអ្វីដែលពួកអ្នកមិនឃើញថា

وَمَا لَا تُبۡصِرُونَ ٣٩

៤០-ពិតប្រាកដណាស់ វា(គម្ពីរគួរអាន) ពិតជាពាក្យពេចន៍របស់អល់ឡោះដែលសូត្រដោយអ្នកនាំសារដ៏មហាថ្កុំថ្កើង ។

إِنَّهُۥ لَقَوۡلُ رَسُولٖ كَرِيمٖ ٤٠

៤១-ហើយវាមិនមែនជាពាក្យពេចន៍របស់អ្នកកវីឡើយ ។ តែអ្វីដែលពួកអ្នកជឿនោះគឺតិចតួចបំផុត ។

وَمَا هُوَ بِقَوۡلِ شَاعِرٖۚ قَلِيلٗا مَّا تُؤۡمِنُونَ ٤١

៤២-ហើយក៏មិនមែនជាពាក្យពេចន៍របស់គ្រូទាយដែរ ។ តែអ្វីដែលពួកអ្នកនឹកឃើញនោះគឺតិចតួចបំផុត ។

وَلَا بِقَوۡلِ كَاهِنٖۚ قَلِيلٗا مَّا تَذَكَّرُونَ ٤٢

៤៣-គម្ពីរគួរអានគឺជាការបញ្ចុះមកពីម្ចាស់គ្រប់គ្រងនៃពិភពទាំងអស់ ។

تَنزِيلٞ مِّن رَّبِّ ٱلۡعَٰلَمِينَ ٤٣

៤៤-ហើយប្រសិនបើគេ(មូហាំម៉ាត់) បន្ថែមបន្ថយពាក្យសំដីខ្លះលើពាក្យសំដីរបស់យើងនោះ

وَلَوۡ تَقَوَّلَ عَلَيۡنَا بَعۡضَ ٱلۡأَقَاوِيلِ ٤٤

៤៥-យើងនឹងផ្តន្ទាទោសគេដោយដៃស្តាំរបស់យើង

لَأَخَذۡنَا مِنۡهُ بِٱلۡيَمِينِ ٤٥

៤៦-បន្ទាប់មកយើងពិតជានឹងកាត់សរសៃឈាមបេះដូងរបស់គេជាមិនខាន ។

ثُمَّ لَقَطَعۡنَا مِنۡهُ ٱلۡوَتِينَ ٤٦

៤៧-ហើយគ្មានអ្នកណាម្នាក់ក្នុងចំណោមពួកអ្នកអាចរារាំងវា(ការដាក់ទោសរបស់យើង) បានឡើយ ។

فَمَا مِنكُم مِّنۡ أَحَدٍ عَنۡهُ حَٰجِزِينَ ٤٧

៤៨-ហើយពិតប្រាកដណាស់វា(គម្ពីរគួរអាន) គឺជាការរំលឹកដល់បណ្តាអ្នកដែលកោតខ្លាចអល់ឡោះ ។

وَإِنَّهُۥ لَتَذۡكِرَةٞ لِّلۡمُتَّقِينَ ٤٨

៤៩-ហើយពិតប្រាកដណាស់ យើងដឹងថា ក្នុងចំណោមពួកអ្នកពិតជាមានអ្នកដែលបដិសេធ(នឹងគម្ពីរគួរអាន) ។

وَإِنَّا لَنَعۡلَمُ أَنَّ مِنكُم مُّكَذِّبِينَ ٤٩

៥០-ហើយពិតប្រាដកណាស់ វា(ការបដិសេធគម្ពីរគួរអាន) គឺជាការសោកស្តាយយ៉ាងខ្លាំងចំពោះពួកដែលគ្មានជំនឿ(នៅថ្ងៃបរលោក) ។

وَإِنَّهُۥ لَحَسۡرَةٌ عَلَى ٱلۡكَٰفِرِينَ ٥٠

៥១-ហើយពិតប្រាកដណាស់វាគឺជាការពិតយ៉ាងជាក់ស្តែង។

وَإِنَّهُۥ لَحَقُّ ٱلۡيَقِينِ ﴿٥١﴾

៥២-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)លើកតម្កើងនាមនៃម្ចាស់របស់អ្នកដ៏មហាឧត្តុង្គឧត្តម។

فَسَبِّحۡ بِٱسۡمِ رَبِّكَ ٱلۡعَظِيمِ ﴿٥٢﴾

## ជំពូកអាល់ម៉ាអារិច

## سورة المعارج

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-អ្នកសុំម្នាក់(អ្នកគ្មានជំនឿ)បានបួងសួងសុំឱ្យទារុណកម្មកើតឡើង

سَأَلَ سَآئِلُۢ بِعَذَابٖ وَاقِعٖ ﴿١﴾

២-ចំពោះពួកដែលគ្មានជំនឿ។គ្មានអ្នកណាម្នាក់អាចការពារគេ

لِّلۡكَٰفِرِينَ لَيۡسَ لَهُۥ دَافِعٞ ﴿٢﴾

៣-ពី(ទារុណកម្ម)អល់ឡោះដែលជាម្ចាស់នៃផ្លូវឡើងទៅលើមេឃ

مِّنَ ٱللَّهِ ذِي ٱلۡمَعَارِجِ ﴿٣﴾

៤-ដែលម៉ាឡាអ៊ីកាត់ និងជីព្រីលឡើងទៅកាន់ទ្រង់ក្នុងមួយថ្ងៃដែលរយៈពេលរបស់វាចំនួនហាសិបពាន់ឆ្នាំឡើយ។

تَعۡرُجُ ٱلۡمَلَٰٓئِكَةُ وَٱلرُّوحُ إِلَيۡهِ فِي يَوۡمٖ كَانَ
مِقۡدَارُهُۥ خَمۡسِينَ أَلۡفَ سَنَةٖ ﴿٤﴾

៥-ដូច្នេះចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់នូវការអត់ធ្មត់មួយដ៏ល្អចុះ។

فَٱصۡبِرۡ صَبۡرٗا جَمِيلًا ﴿٥﴾

៦-ពិតប្រាកដណាស់ ពួកគេ(ពួកគ្មានជំនឿ)ឃើញទារុណកម្មនៅឆ្ងាយបំផុត។

إِنَّهُمۡ يَرَوۡنَهُۥ بَعِيدٗا ﴿٦﴾

៧-តែយើងឃើញវានៅជិតបង្កើយ។

وَنَرَىٰهُ قَرِيبٗا ﴿٧﴾

៨-នៅថ្ងៃដែលមេឃនឹងក្លាយដូចជាលោហធាតុកំពុងរលាយ។

يَوۡمَ تَكُونُ ٱلسَّمَآءُ كَٱلۡمُهۡلِ ﴿٨﴾

៩-ហើយភ្នំក៏ក្លាយដូចជារោមសត្វប៉ើងព្រោងព្រាត។

وَتَكُونُ ٱلۡجِبَالُ كَٱلۡعِهۡنِ ﴿٩﴾

១០-(នៅថ្ងៃនោះ)គ្មានមិត្តភក្តិណាសួរសុខទុក្ខមិត្តភក្តិណាឡើយ

وَلَا يَسۡـَٔلُ حَمِيمٌ حَمِيمٗا ﴿١٠﴾

១១-ទោះបីជាពួកគេត្រូវគេឱ្យឃើញគ្នាក៏ដោយ។ អ្នកសាងអំពើបាបមានបំណងលោះខ្លួនឱ្យរួចផុតពីទារុណកម្មនៅថ្ងៃនោះដោយកូនចៅរបស់គេ

يُبَصَّرُونَهُمۡۚ يَوَدُّ ٱلۡمُجۡرِمُ لَوۡ يَفۡتَدِي مِنۡ
عَذَابِ يَوۡمِئِذِۭ بِبَنِيهِ ﴿١١﴾

១២-និងភរិយា និងបងប្អូនរបស់គេ

وَصَٰحِبَتِهِۦ وَأَخِيهِ ﴿١٢﴾

១៣-និងក្រុមគ្រួសារ សាច់សារលោហិតរបស់គេដែលផ្តល់ទីជំរកដល់គេ

وَفَصِيلَتِهِ ٱلَّتِى تُـْٔوِيهِ ﴿١٣﴾

១៤-និងអ្នកដែលនៅលើផែនដីទាំងអស់ បន្ទាប់មកសង្គ្រោះគេឱ្យផុតពីទារុណកម្ម។

وَمَن فِى ٱلْأَرْضِ جَمِيعًا ثُمَّ يُنجِيهِ ﴿١٤﴾

១៥-មិនដូច្នោះទេ! ពិតប្រាកដណាស់វាគឺជាភ្លើងនរកដែលឆេះសន្ធោសន្ធៅ

كَلَّآ ۖ إِنَّهَا لَظَىٰ ﴿١٥﴾

១៦-ដែលវាបកស្បែកក្បាល (និងខ្លួនប្រាណ)។

نَزَّاعَةً لِّلشَّوَىٰ ﴿١٦﴾

១៧-វា(នរក)ស្រែកហៅអ្នកដែលបានបែរខ្នង និងគេចចេញ(ពីមាគ៌ាត្រឹមត្រូវ)

تَدْعُوا۟ مَنْ أَدْبَرَ وَتَوَلَّىٰ ﴿١٧﴾

១៨-និងបានប្រមូល(ទ្រព្យសម្បត្តិ) រួចលាក់ទុក(មិនបរិច្ចាគទាន)។

وَجَمَعَ فَأَوْعَىٰٓ ﴿١٨﴾

១៩-ពិតប្រាកដណាស់ មនុស្សលោកត្រូវបានគេបង្កើតឡើងដោយគ្មានការអត់ធ្មត់ឡើយ។

۞ إِنَّ ٱلْإِنسَٰنَ خُلِقَ هَلُوعًا ﴿١٩﴾

២០-ដោយគេមានក្តីព្រួយបារម្ភនៅពេលដែលគ្រោះអាក្រក់បានកើតឡើងចំពោះគេ។

إِذَا مَسَّهُ ٱلشَّرُّ جَزُوعًا ﴿٢٠﴾

២១-ហើយគេបែរជាកំណាញ់ នៅពេលដែលគេបានទទួលបានផលល្អ(មានទ្រព្យសម្បត្តិ)។

وَإِذَا مَسَّهُ ٱلْخَيْرُ مَنُوعًا ﴿٢١﴾

២២-លើកលែងតែបណ្តាអ្នកដែលប្រតិបត្តិសឡាតប៉ុណ្ណោះ។

إِلَّا ٱلْمُصَلِّينَ ﴿٢٢﴾

២៣-ដែលពួកគេប្រកាន់ខ្ជាប់នឹងការប្រតិបត្តិសឡាតរបស់គេជានិច្ច។

ٱلَّذِينَ هُمْ عَلَىٰ صَلَاتِهِمْ دَآئِمُونَ ﴿٢٣﴾

២៤-និងបណ្តាអ្នកដែលទ្រព្យសម្បត្តិរបស់ពួកគេគឺមានសិទ្ធិ(មានចំណែក)ដែលត្រូវបានគេកំណត់(ឱ្យបរិច្ចាគភាគទាន)

وَٱلَّذِينَ فِىٓ أَمْوَٰلِهِمْ حَقٌّ مَّعْلُومٌ ﴿٢٤﴾

២៥-សម្រាប់អ្នកក្រដែលហ៊ានសុំ និងអ្នកក្រដែលមិនហ៊ានសុំ។

لِّلسَّآئِلِ وَٱلْمَحْرُومِ ﴿٢٥﴾

២៦-និងបណ្តាអ្នកដែលជឿជាក់លើថ្ងៃជំនុំជំរះ(ថ្ងៃបរលោក)។

وَٱلَّذِينَ يُصَدِّقُونَ بِيَوْمِ ٱلدِّينِ ﴿٢٦﴾

وَٱلَّذِينَ هُم مِّنۡ عَذَابِ رَبِّهِم مُّشۡفِقُونَ ﴿٢٧﴾

២៧-និងបណ្ដាអ្នកដែលកោតខ្លាចទារុណកម្មនៃម្ចាស់របស់ពួកគេ ។

إِنَّ عَذَابَ رَبِّهِمۡ غَيۡرُ مَأۡمُونٖ ﴿٢٨﴾

២៨-ពិតប្រាកដណាស់ ទារុណកម្មនៃម្ចាស់របស់ពួកគេគឺគ្មានអ្នកណាម្នាក់មានសុវត្ថិភាពឡើយ ។

وَٱلَّذِينَ هُمۡ لِفُرُوجِهِمۡ حَٰفِظُونَ ﴿٢٩﴾

២៩-និងបណ្ដាអ្នកដែលបានថែរក្សាប្រដាប់ភេទរបស់ពួកគេ (ពីអំពើហ្ស៊ីណា) ។

إِلَّا عَلَىٰٓ أَزۡوَٰجِهِمۡ أَوۡ مَا مَلَكَتۡ أَيۡمَٰنُهُمۡ فَإِنَّهُمۡ غَيۡرُ مَلُومِينَ ﴿٣٠﴾

៣០-លើកលែងតែចំពោះភរិយារបស់ពួកគេ និងខ្ញុំបម្រើស្រីដាច់ថ្លៃដែលនៅក្រោមការគ្រប់គ្រងរបស់ពួកគេប៉ុណ្ណោះ ។ ហើយពិតប្រាកដណាស់ ពួកគេមិនត្រូវបានគេយកទោសពៃរ៍ឡើយ ។

فَمَنِ ٱبۡتَغَىٰ وَرَآءَ ذَٰلِكَ فَأُوْلَٰٓئِكَ هُمُ ٱلۡعَادُونَ ﴿٣١﴾

៣១-អ្នកណាហើយដែលបានស្វែងរកការត្រេកត្រអាលក្រៅពី (ប្រពន្ធ និងខ្ញុំបម្រើដាច់ថ្លៃ) នោះ ពួកទាំងនោះហើយគឺជាពួកដែលបានល្មើស (នឹងបទបញ្ញត្តិរបស់អល់ឡោះ) ។

وَٱلَّذِينَ هُمۡ لِأَمَٰنَٰتِهِمۡ وَعَهۡدِهِمۡ رَٰعُونَ ﴿٣٢﴾

៣២-ហើយបណ្ដាអ្នកដែលថែរក្សានូវភាពស្មោះត្រង់ និងការសន្យារបស់ពួកគេ ។

وَٱلَّذِينَ هُم بِشَهَٰدَٰتِهِمۡ قَآئِمُونَ ﴿٣٣﴾

៣៣-និងបណ្ដាអ្នកដែលប្រកាន់ខ្ជាប់ (ដោយយុត្តិធម៌) ក្នុងការធ្វើសាក្សីរបស់ពួកគេ ។

وَٱلَّذِينَ هُمۡ عَلَىٰ صَلَاتِهِمۡ يُحَافِظُونَ ﴿٣٤﴾

៣៤-ហើយនិងបណ្ដាអ្នកដែលថែរក្សានូវការប្រតិបត្តិសឡាតរបស់ពួកគេ ។

أُوْلَٰٓئِكَ فِي جَنَّٰتٖ مُّكۡرَمُونَ ﴿٣٥﴾

៣៥-អ្នកទាំងនោះហើយ គឺជាអ្នកដែលត្រូវគេលើកតម្កើងនៅក្នុងឋានសួគ៌ ។

فَمَالِ ٱلَّذِينَ كَفَرُواْ قِبَلَكَ مُهۡطِعِينَ ﴿٣٦﴾

៣៦-តើហេតុអ្វីបានជាពួកគ្មានជំនឿប្រញាប់ប្រញាល់ឆ្ពោះទៅកាន់អ្នក

عَنِ ٱلۡيَمِينِ وَعَنِ ٱلشِّمَالِ عِزِينَ ﴿٣٧﴾

៣៧-ទាំងខាងស្ដាំ និងខាងឆ្វេងជាក្រុមៗដូច្នេះ?

أَيَطۡمَعُ كُلُّ ٱمۡرِيٕٖ مِّنۡهُمۡ أَن يُدۡخَلَ جَنَّةَ نَعِيمٖ ﴿٣٨﴾

៣៨-តើរាល់ៗបុគ្គលក្នុងចំណោមពួកគេមានបំណងចូលឋានសួគ៌ណាអ៊ីមឬ?

៣៩-មិនដូច្នោះទេ! ពិតប្រាកដណាស់ យើងបានបង្កើតពួកគេអំពីអ្វីដែលពួកគេបានដឹងស្រាប់(ទឹកកាម)។

كَلَّآۖ إِنَّا خَلَقۡنَٰهُم مِّمَّا يَعۡلَمُونَ ٣٩

៤០-យើងស្បថនឹងម្ចាស់គ្រប់គ្រង(អល់ឡោះស្បថនឹងខ្លួនឯង) កន្លែងដែលព្រះអាទិត្យនិងព្រះច័ន្ទរះ និងកន្លែងដែលព្រះអាទិត្យនិងព្រះច័ន្ទលិចថា ពិតប្រាកដណាស់យើងគឺជាអ្នកដែលមានអានុភាព

فَلَآ أُقۡسِمُ بِرَبِّ ٱلۡمَشَٰرِقِ وَٱلۡمَغَٰرِبِ إِنَّا لَقَٰدِرُونَ ٤٠

៤១-លើការជំនួសក្រុមផ្សេងដែលល្អជាងពួកគេទៅទៀត ហើយគ្មានអ្នកណាម្នាក់អាចយកឈ្នះយើងបានឡើយ។

عَلَىٰٓ أَن نُّبَدِّلَ خَيۡرٗا مِّنۡهُمۡ وَمَا نَحۡنُ بِمَسۡبُوقِينَ ٤١

៤២-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)បណ្តោយឱ្យពួកគេលិចលង់(ក្នុងភាពវង្វេង) និងលេងសើចរហូតដល់ពួកគេជួបនឹងថ្ងៃរបស់ពួកគេដែលត្រូវគេសន្យាធ្វើទារុណកម្ម(នៅថ្ងៃបរលោក)ចុះ។

فَذَرۡهُمۡ يَخُوضُواْ وَيَلۡعَبُواْ حَتَّىٰ يُلَٰقُواْ يَوۡمَهُمُ ٱلَّذِي يُوعَدُونَ ٤٢

៤៣-គឺនៅថ្ងៃដែលពួកគេចេញពីផ្នូរយ៉ាងលឿនប្រញ្ញាប់ដូចជាពួកគេឆ្ពោះទៅកាន់រូបសំណាកដែលពួកគេបានបង្កើតដើម្បីគោរពសក្ការៈ(នៅក្នុងលោកិយ)។

يَوۡمَ يَخۡرُجُونَ مِنَ ٱلۡأَجۡدَاثِ سِرَاعٗا كَأَنَّهُمۡ إِلَىٰ نُصُبٖ يُوفِضُونَ ٤٣

៤៤-ភ្នែករបស់ពួកគេទម្លាក់ចុះ ខណៈដែលការលំបាកគ្របដណ្តប់ពួកគេ។ នោះគឺជាថ្ងៃដែលពួកគេត្រូវបានគេសន្យា។

خَٰشِعَةً أَبۡصَٰرُهُمۡ تَرۡهَقُهُمۡ ذِلَّةٞۚ ذَٰلِكَ ٱلۡيَوۡمُ ٱلَّذِي كَانُواْ يُوعَدُونَ ٤٤

## ជំពូក នួហ

## سورة نوح

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-ពិតប្រាកដណាស់ យើងបានបញ្ជូននួហទៅកាន់ក្រុមរបស់គេ(ដោយបញ្ជាថា) ចូរអ្នកដាស់តឿនព្រមានក្រុមរបស់អ្នកមុននឹងទារុណកម្មដ៏ឈឺចាប់ធ្លាក់មកលើពួកគេ។

إِنَّآ أَرۡسَلۡنَا نُوحًا إِلَىٰ قَوۡمِهِۦٓ أَنۡ أَنذِرۡ قَوۡمَكَ مِن قَبۡلِ أَن يَأۡتِيَهُمۡ عَذَابٌ أَلِيمٞ ١

២-គេ(នួហ)បានពោលថាៈ ឱក្រុមរបស់ខ្ញុំ! ពិតប្រាកដណាស់ខ្ញុំជាអ្នកដាស់តឿនព្រមានដ៏ពិតប្រាកដសម្រាប់ពួកអ្នក។

قَالَ يَٰقَوۡمِ إِنِّي لَكُمۡ نَذِيرٞ مُّبِينٌ ٢

៣-ចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះ និងកោតខ្លាចទ្រង់ ហើយនិងប្រតិបត្តិតាមខ្ញុំ

أَنِ ٱعۡبُدُواْ ٱللَّهَ وَٱتَّقُوهُ وَأَطِيعُونِ ٣

៤-ទ្រង់នឹងអភ័យទោសដល់ពួកអ្នកនូវរាល់បាបកម្មរបស់ពួក

يَغۡفِرۡ لَكُم مِّن ذُنُوبِكُمۡ وَيُؤَخِّرۡكُمۡ إِلَىٰٓ أَجَلٖ

مُّسَمًّىۚ إِنَّ أَجَلَ ٱللَّهِ إِذَا جَآءَ لَا يُؤَخَّرُۚ لَوۡ كُنتُمۡ تَعۡلَمُونَ ٤

អ្នក ហើយទ្រង់នឹងពន្យារពេលឱ្យពួកអ្នក( មានអាយុវែង) រហូតដល់ពេលមួយដែលគេបានកំណត់ ។ ពិតប្រាកដណាស់ ការកំណត់របស់អល់ឡោះ កាលណាវាមកដល់ គឺគេមិនពន្យារពេលឡើយ ប្រសិនបើពួកអ្នកបានដឹង ។

قَالَ رَبِّ إِنِّي دَعَوۡتُ قَوۡمِي لَيۡلٗا وَنَهَارٗا ٥

៥-គេ( នូហ) បានពោលថា: ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ខ្ញុំបានអំពាវនាវក្រុមរបស់ខ្ញុំ( ឱ្យទៅកាន់ភាពមានជំនឿ) ទាំងយប់ទាំងថ្ងៃ ។

فَلَمۡ يَزِدۡهُمۡ دُعَآءِيٓ إِلَّا فِرَارٗا ٦

៦-តែការអំពាវនាវរបស់ខ្ញុំមិនបន្ថែមអ្វីដល់ពួកគេឡើយ គឺមានតែធ្វើឱ្យពួកគេរត់គេចថែមទៀតប៉ុណ្ណោះ ។

وَإِنِّي كُلَّمَا دَعَوۡتُهُمۡ لِتَغۡفِرَ لَهُمۡ جَعَلُوٓاْ أَصَٰبِعَهُمۡ فِيٓ ءَاذَانِهِمۡ وَٱسۡتَغۡشَوۡاْ ثِيَابَهُمۡ وَأَصَرُّواْ وَٱسۡتَكۡبَرُواْ ٱسۡتِكۡبَارٗا ٧

៧-ហើយពិតប្រាដកណាស់ រាល់ពេលដែលខ្ញុំអំពាវនាវពួកគេដើម្បីទ្រង់នឹងអភ័យទោសដល់ពួកគេនោះ ពួកគេបែរជាយកម្រាមដៃរបស់ពួកគេញ៉ុកត្រចៀករបស់ពួកគេ និងយកសំលៀកបំពាក់របស់ពួកគេគ្របលើមុខ ថែមទាំងបានបន្តការប្រឆាំង និងក្រអឺតក្រទមយ៉ាងខ្លាំងទៀតផង ។

ثُمَّ إِنِّي دَعَوۡتُهُمۡ جِهَارٗا ٨

៨-បន្ទាប់មក ខ្ញុំពិតជាបានអំពាវនាវពួកគេដោយចំហរ

ثُمَّ إِنِّيٓ أَعۡلَنتُ لَهُمۡ وَأَسۡرَرۡتُ لَهُمۡ إِسۡرَارٗا ٩

៩-ក្រោយមក ខ្ញុំពិតជាបានប្រកាសប្រាប់ពួកគេជាសាធារណៈ និង( ជូនកាល) ដោយស្ងៀមស្ងាត់ ។

فَقُلۡتُ ٱسۡتَغۡفِرُواْ رَبَّكُمۡ إِنَّهُۥ كَانَ غَفَّارٗا ١٠

១០-រួចមកខ្ញុំបានពោលថា: ចូរពួកអ្នកសុំអភ័យទោសពីម្ចាស់របស់ពួកអ្នក ពិតប្រាកដណាស់ ទ្រង់ជាអ្នកអភ័យទោសបំផុត ។

يُرۡسِلِ ٱلسَّمَآءَ عَلَيۡكُم مِّدۡرَارٗا ١١

១១-ទ្រង់នឹងបញ្ចុះទឹកភ្លៀងជាច្រើនមកឱ្យពួកអ្នក ។

وَيُمۡدِدۡكُم بِأَمۡوَٰلٖ وَبَنِينَ وَيَجۡعَل لَّكُمۡ جَنَّٰتٖ وَيَجۡعَل لَّكُمۡ أَنۡهَٰرٗا ١٢

១២-ហើយទ្រង់នឹងបន្ថែមទ្រព្យសម្បត្តិនិងកូនចៅជាច្រើនដល់ពួកអ្នក និងប្រទានចំការដំណាំជាច្រើនឱ្យពួកអ្នក ហើយក៏ប្រទានទន្លេជាច្រើនឱ្យពួកអ្នកដែរ ។

مَّا لَكُمۡ لَا تَرۡجُونَ لِلَّهِ وَقَارٗا ١٣

១៣-តើហេតុអ្វីបានជាពួកអ្នកមិនកោតខ្លាចភាពថ្កុំថ្កើងរបស់អល់ឡោះ

وَقَدۡ خَلَقَكُمۡ أَطۡوَارًا ١٤

១៤-ដោយទ្រង់ពិតជាបានបង្កើតពួកអ្នកជាដំណាក់ៗ( ពីទឹក

កាមរហូតក្លាយជារូបរាងពេញលេញ) នោះ ?

أَلَمْ تَرَوْاْ كَيْفَ خَلَقَ ٱللَّهُ سَبْعَ سَمَٰوَٰتٖ طِبَاقٗا ﴿١٥﴾

១៥-តើអ្នកមិនបានឃើញទេថា តើអល់ឡោះបានបង្កើតមេឃប្រាំពីរជាន់តំរៀបលើគ្នា

وَجَعَلَ ٱلْقَمَرَ فِيهِنَّ نُورٗا وَجَعَلَ ٱلشَّمْسَ سِرَاجٗا ﴿١٦﴾

១៦-ហើយទ្រង់បានបង្កើតព្រះច័ន្ទជាពន្លឺ និងបានបង្កើតព្រះអាទិត្យជាចង្កៀងនៅក្នុងវា(មេឃ) យ៉ាងដូចម្ដេចខ្លះ?

وَٱللَّهُ أَنۢبَتَكُم مِّنَ ٱلْأَرْضِ نَبَاتٗا ﴿١٧﴾

១៧-ហើយអល់ឡោះបានបង្កើតធាតុដើមរបស់ពួកអ្នកអំពីដី ។

ثُمَّ يُعِيدُكُمْ فِيهَا وَيُخْرِجُكُمْ إِخْرَاجٗا ﴿١٨﴾

១៨-បន្ទាប់មក ទ្រង់នឹងធ្វើឱ្យពួកអ្នកវិលត្រឡប់ទៅក្នុងដីវិញ ហើយទ្រង់ក៏បញ្ចេញពួកអ្នកពីវាវិញផងដែរ(នៅថ្ងៃបរលោក) ។

وَٱللَّهُ جَعَلَ لَكُمُ ٱلْأَرْضَ بِسَاطٗا ﴿١٩﴾

១៩-ហើយអល់ឡោះបានបង្កើតផែនដីជាកម្រាលសម្រាប់ពួកអ្នក

لِّتَسْلُكُواْ مِنْهَا سُبُلٗا فِجَاجٗا ﴿٢٠﴾

២០-ដើម្បីឱ្យពួកអ្នកអាចធ្វើដំណើរលើវាតាមផ្លូវជាច្រើនដែលទូលំទូលាយ ។

قَالَ نُوحٞ رَّبِّ إِنَّهُمْ عَصَوْنِي وَٱتَّبَعُواْ مَن لَّمْ يَزِدْهُ مَالُهُۥ وَوَلَدُهُۥٓ إِلَّا خَسَارٗا ﴿٢١﴾

២១-នូហបានពោលថាៈ ឱម្ចាស់របស់ខ្ញុំ! ពិតប្រាកដណាស់ ពួកគេបានប្រឆាំងនឹងខ្ញុំ ថែមទាំងបានធ្វើតាមអ្នកដែលទ្រព្យសម្បត្តិរបស់គេ និងកូនចៅរបស់គេមិនបានបន្ថែមអ្វីដល់គេក្រៅពីភាពខាតបង់ទៀតផង ។

وَمَكَرُواْ مَكْرٗا كُبَّارٗا ﴿٢٢﴾

២២-ហើយពួកគេបានរៀបចំល្បិចកលមួយដ៏ធំ ។

وَقَالُواْ لَا تَذَرُنَّ ءَالِهَتَكُمْ وَلَا تَذَرُنَّ وَدّٗا وَلَا سُوَاعٗا وَلَا يَغُوثَ وَيَعُوقَ وَنَسْرٗا ﴿٢٣﴾

២៣-ហើយពួកគេបាននិយាយ(ទៅកាន់គ្នាគេ) ថាៈ ចូរពួកអ្នកកុំបោះបង់ព្រះនានារបស់ពួកអ្នក និងកុំបោះបង់ព្រះវ៉ាដ និងស៊ូវ៉ាក និងយ៉ាហ្ហូស និងយ៉ាអ៊ូក និងណាសរ៍ឱ្យសោះ ។

وَقَدْ أَضَلُّواْ كَثِيرٗاۖ وَلَا تَزِدِ ٱلظَّٰلِمِينَ إِلَّا ضَلَٰلٗا ﴿٢٤﴾

២៤-ហើយជាការពិតណាស់ ព្រះទាំងនោះបានធ្វើឱ្យមនុស្សជាច្រើនវង្វេង ។ សូមទ្រង់មេត្តាកុំបន្ថែមអ្វីដល់ពួកដែលបំពានក្រៅពីភាពវង្វេងអ្វី ។

مِّمَّا خَطِيٓـَٰٔتِهِمْ أُغْرِقُواْ فَأُدْخِلُواْ نَارٗا فَلَمْ يَجِدُواْ لَهُم مِّن دُونِ ٱللَّهِ أَنصَارٗا ﴿٢٥﴾

២៥-ដោយសារតែបាបកម្មទាំងឡាយរបស់ពួកគេ ពួកគេត្រូវបានគេពន្លិច(ក្នុងទឹកជំនន់) រួចត្រូវបានគេបញ្ចូលទៅក្នុងនរក ។

ហើយពួកគេគ្មានអ្នកណាជួយក្រៅពីអល់ឡោះឡើយ ។

២៦-នូហបានពោលថា: ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាកុំទុកឱ្យពួកគ្មានជំនឿណាម្នាក់រស់នៅលើផែនដីនេះអ្វី ។

២៧-ពិតប្រាកដណាស់ ប្រសិនបើទ្រង់ទុកជីវិតឱ្យពួកគេ ពួកគេនឹងធ្វើឱ្យខ្ញុំរបស់ទ្រង់វង្វេងជាមិនខាន ។ ហើយពួកគេមិនបង្កើតក្រៅពីកូនដែលអាក្រក់ និងប្រឆាំង(នឹងទ្រង់) នោះឡើយ ។

២៨-ឱម្ចាស់របស់ខ្ញុំ! សូមទ្រង់មេត្តាអភ័យទោសដល់ខ្ញុំ និងឪពុកម្តាយរបស់ខ្ញុំ និងអ្នកដែលបានចូលក្នុងផ្ទះរបស់ខ្ញុំដោយមានជំនឿ(នឹងទ្រង់) និងបណ្តាអ្នកដែលមានជំនឿប្រុសស្រីផង ។ ហើយសូមទ្រង់មេត្តាកុំបន្ថែមអ្វីដល់ពួកដែលបំពានក្រៅពីភាពវិនាសអ្វី ។

## ជំពូកអាល់ជិន

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ខ្ញុំត្រូវបានគេផ្តល់វ៉ាហ៊ីឱ្យដឹងថា ពិតប្រាកដណាស់មានជិនមួយក្រុមបានស្តាប់(ខ្ញុំសូត្រគម្ពីរគួរអាន) ។ ហើយពួកគេបាននិយាយប្រាប់គ្នាថា: ពិតប្រាកដណាស់ពួកយើងបានស្តាប់ការសូត្រគម្ពីរគួរអានមួយដ៏អស្ចារ្យ ។

២-ដែលវាចង្អុលបង្ហាញទៅរកមាគ៌ាដ៏ត្រឹមត្រូវ រួចពួកយើងក៏មានជំនឿលើវា ។ ហើយពួកយើងមិនគោរពសក្ការៈចំពោះអ្នកណាម្នាក់រួមជាមួយម្ចាស់របស់ពួកយើងឡើយ ។

៣-ហើយពិតប្រាកដណាស់ អានុភាពនៃម្ចាស់របស់ពួកយើងមហាខ្ពង់ខ្ពស់ ។ ទ្រង់គ្មានភរិយា និងគ្មានបុត្រឡើយ ។

៤-ហើយពិតប្រាកដណាស់ អ្នកដែលល្ងង់ខ្លៅក្នុងចំណោមពួកយើង(អ៊ីព្លីស)ធ្លាប់និយាយចោទប្រកាន់ចំពោះអល់ឡោះនូវពាក្យសំដីហួសហេតុ ។

៥-ហើយពិតប្រាកដណាស់ ពួកយើងបានគិតថាមនុស្សលោក និងជិននឹងមិននិយាយចោទប្រកាន់ចំពោះអល់ឡោះនូវពាក្យសំដី

وَقَالَ نُوحٌ رَّبِّ لَا تَذَرْ عَلَى ٱلْأَرْضِ مِنَ
ٱلْكَٰفِرِينَ دَيَّارًا ﴿٢٦﴾
إِنَّكَ إِن تَذَرْهُمْ يُضِلُّوا۟ عِبَادَكَ وَلَا يَلِدُوٓا۟
إِلَّا فَاجِرًا كَفَّارًا ﴿٢٧﴾
رَّبِّ ٱغْفِرْ لِى وَلِوَٰلِدَىَّ وَلِمَن دَخَلَ بَيْتِىَ
مُؤْمِنًا وَلِلْمُؤْمِنِينَ وَٱلْمُؤْمِنَٰتِ وَلَا تَزِدِ
ٱلظَّٰلِمِينَ إِلَّا تَبَارًۢا ﴿٢٨﴾

## سورة الجن

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

قُلْ أُوحِىَ إِلَىَّ أَنَّهُ ٱسْتَمَعَ نَفَرٌ مِّنَ ٱلْجِنِّ
فَقَالُوٓا۟ إِنَّا سَمِعْنَا قُرْءَانًا عَجَبًا ﴿١﴾
يَهْدِىٓ إِلَى ٱلرُّشْدِ فَـَٔامَنَّا بِهِۦ ۖ وَلَن نُّشْرِكَ
بِرَبِّنَآ أَحَدًا ﴿٢﴾
وَأَنَّهُۥ تَعَٰلَىٰ جَدُّ رَبِّنَا مَا ٱتَّخَذَ صَٰحِبَةً وَلَا
وَلَدًا ﴿٣﴾
وَأَنَّهُۥ كَانَ يَقُولُ سَفِيهُنَا عَلَى ٱللَّهِ
شَطَطًا ﴿٤﴾
وَأَنَّا ظَنَنَّآ أَن لَّن تَقُولَ ٱلْإِنسُ وَٱلْجِنُّ عَلَى

ភូតកុហកឡើយ ។

ٱللَّهِ كَذِبًا ۝٥

៦-ហើយពិតប្រាកដណាស់ បុរសមួយក្រុមក្នុងចំណោមមនុស្សលោកបានសុំពីបុរសជិនមួយចំនួនឱ្យការពារ( ពួកគេអំពីប្រការអាក្រក់) ។ ប៉ុន្តែជិនទាំងនោះរឹតតែបន្ថែមការភ័យខ្លាចដល់ពួកគេថែមទៀត ។

وَأَنَّهُۥ كَانَ رِجَالٌ مِّنَ ٱلْإِنسِ يَعُوذُونَ بِرِجَالٍ مِّنَ ٱلْجِنِّ فَزَادُوهُمْ رَهَقًا ۝٦

៧-ហើយពិតប្រាកដណាស់ ពួកគេ( មនុស្សគ្មានជំនឿ) បានគិតដូចដែលពួកអ្នក( ជិនគ្មានជំនឿ) បានគិតដែរថា អល់ឡោះនឹងមិនធ្វើឱ្យអ្នកណាម្នាក់រស់ឡើងវិញម្តងទៀតឡើយ ។

وَأَنَّهُمْ ظَنُّوا۟ كَمَا ظَنَنتُمْ أَن لَّن يَبْعَثَ ٱللَّهُ أَحَدًا ۝٧

៨-ហើយពិតប្រាកដណាស់ ពួកយើង( ជិន) បានព្យាយាមឡើងទៅលើមេឃ( ដើម្បីស្តាប់រឿងអាថ៌កំបាំង) រួចយើងបានជួបប្រទះនៅទីនោះពោរពេញទៅដោយអ្នកការពារ( ម៉ាឡាអ៊ីកាត់) ដ៏រឹងមាំ និងមានផ្កាយជាច្រើន( សម្រាប់បាញ់ពួកស្ហៃតន) ។

وَأَنَّا لَمَسْنَا ٱلسَّمَآءَ فَوَجَدْنَـٰهَا مُلِئَتْ حَرَسًا شَدِيدًا وَشُهُبًا ۝٨

៩-ហើយពិតប្រាកដណាស់ ពួកយើងធ្លាប់បានអង្គុយនៅកន្លែងមួយចំនួននៅលើមេឃដើម្បីស្តាប់រឿងរ៉ាវផ្សេងៗ ។ ប៉ុន្តែឥឡូវនេះ( ក្រោយពីមូហាំម៉ាត់ក្លាយជាអ្នកនាំសារ) អ្នកណាហើយព្យាយាមស្តាប់រឿងរ៉ាវនោះ គេពិតជាជួបប្រទះនឹងផ្កាយដែលនៅការពារ( តាមបាញ់គេ) ជាមិនខាន ។

وَأَنَّا كُنَّا نَقْعُدُ مِنْهَا مَقَـٰعِدَ لِلسَّمْعِ ۖ فَمَن يَسْتَمِعِ ٱلْـَٔانَ يَجِدْ لَهُۥ شِهَابًا رَّصَدًا ۝٩

១០-ហើយពិតប្រាកដណាស់ ពួកយើងមិនបានដឹងទេថា ( ការហាមឃាត់មិនឱ្យស្តាប់រឿងរ៉ាវនៅលើមេឃនោះ) តើអល់ឡោះចង់ធ្វើទារុណកម្មអ្នកដែលនៅលើផែនដី ឬមួយក៏ម្ចាស់របស់គេចង់ចង្អុលបង្ហាញមាគ៌ាត្រឹមត្រូវដល់ពួកគេ ?

وَأَنَّا لَا نَدْرِىٓ أَشَرٌّ أُرِيدَ بِمَن فِى ٱلْأَرْضِ أَمْ أَرَادَ بِهِمْ رَبُّهُمْ رَشَدًا ۝١٠

១១-ហើយពិតប្រាកដណាស់ ក្នុងចំណោមពួកយើង( ជិន) មានអ្នកខ្លះជាអ្នកដែលសាងអំពើល្អត្រឹមត្រូវ( មានជំនឿ) និងមានអ្នកខ្លះទៀតផ្ទុយពីនោះ( គ្មានជំនឿ) ។ ពួកយើងមានមាគ៌ាខុសៗគ្នា ។

وَأَنَّا مِنَّا ٱلصَّـٰلِحُونَ وَمِنَّا دُونَ ذَٰلِكَ ۖ كُنَّا طَرَآئِقَ قِدَدًا ۝١١

១២-ហើយពិតប្រាកដណាស់ ពួកយើងបានគិតថាៈ ពួកយើងមិនអាចគេចពី( ទារុណកម្ម) អល់ឡោះនៅលើផែនដី និងមិនអាចគេចពីទ្រង់ហោះទៅលើមេឃបានឡើយ ។

وَأَنَّا ظَنَنَّآ أَن لَّن نُّعْجِزَ ٱللَّهَ فِى ٱلْأَرْضِ وَلَن نُّعْجِزَهُۥ هَرَبًا ۝١٢

وَأَنَّا لَمَّا سَمِعۡنَا ٱلۡهُدَىٰٓ ءَامَنَّا بِهِۦۖ فَمَن يُؤۡمِنۢ بِرَبِّهِۦ فَلَا يَخَافُ بَخۡسٗا وَلَا رَهَقٗا ﴿١٣﴾

១៣-ហើយពិតប្រាកដណាស់ នៅពេលដែលពួកយើងបានស្តាប់ព្ញនូវការចង្អុលបង្ហាញ( គម្ពីរគួរអាន) ពួកយើងក៏មានជំនឿលើវា។ អ្នកណាហើយដែលជឿលើម្ចាស់របស់គេ គឺគេមិនខ្លាចខ្វះផលបុណ្យ ហើយក៏មិនខ្លាចគេបន្ថែមបាបកម្មដែរ ។

وَأَنَّا مِنَّا ٱلۡمُسۡلِمُونَ وَمِنَّا ٱلۡقَٰسِطُونَۖ فَمَنۡ أَسۡلَمَ فَأُوْلَٰٓئِكَ تَحَرَّوۡاْ رَشَدٗا ﴿١٤﴾

១៤-ហើយពិតប្រាកដណាស់ នៅក្នុងចំណោមពួកយើង មានអ្នកខ្លះជាមូស្លីម និងអ្នកខ្លះទៀតជាអ្នកបំពាន។ អ្នកណាហើយដែលបានប្រតិបត្តិតាមសាសនាអ៊ីស្លាម អ្នកទាំងនោះជាអ្នកដែលមានបំណងទៅរកមាគ៌ាដ៏ត្រឹមត្រូវ ។

وَأَمَّا ٱلۡقَٰسِطُونَ فَكَانُواْ لِجَهَنَّمَ حَطَبٗا ﴿١٥﴾

១៥-រីឯពួកដែលបំពានវិញ ពួកគេគឺជាអុសសម្រាប់ដុតនៅក្នុងនរកជើហាន់ណាំ ។

وَأَلَّوِ ٱسۡتَقَٰمُواْ عَلَى ٱلطَّرِيقَةِ لَأَسۡقَيۡنَٰهُم مَّآءً غَدَقٗا ﴿١٦﴾

១៦-ហើយពិតប្រាកដណាស់ ប្រសិនបើពួកគេ( មនុស្សលោក និងជិន) ស្ថិតនៅលើមាគ៌ាដ៏ត្រឹមត្រូវនោះ យើងពិតជានឹងផ្តល់ឱ្យពួកគេនូវទឹកភ្លៀង( និងផ្តល់លាភសក្ការៈ) យ៉ាងច្រើន ។

لِّنَفۡتِنَهُمۡ فِيهِۚ وَمَن يُعۡرِضۡ عَن ذِكۡرِ رَبِّهِۦ يَسۡلُكۡهُ عَذَابٗا صَعَدٗا ﴿١٧﴾

១៧-ដើម្បីយើងនឹងសាកល្បងពួកគេនឹងវា។ អ្នកណាហើយដែលគេចចេញពីការរំលឹកចំពោះម្ចាស់របស់គេនោះ ទ្រង់ពិតជាបញ្ចូលគេទៅក្នុងទារុណកម្មដ៏ធ្ងន់ធ្ងរ ។

وَأَنَّ ٱلۡمَسَٰجِدَ لِلَّهِ فَلَا تَدۡعُواْ مَعَ ٱللَّهِ أَحَدٗا ﴿١٨﴾

១៨-ហើយពិតប្រាកដណាស់ ម៉ាស្ជិទ(វិហារ) គឺជាកម្មសិទ្ធិរបស់អល់ឡោះ។ ដូច្នេះ ចូរពួកអ្នកកុំបួងសួងសុំអ្នកណាម្នាក់រួមជាមួយអល់ឡោះឱ្យសោះ ។

وَأَنَّهُۥ لَمَّا قَامَ عَبۡدُ ٱللَّهِ يَدۡعُوهُ كَادُواْ يَكُونُونَ عَلَيۡهِ لِبَدٗا ﴿١٩﴾

១៩-ហើយពិតប្រាកដណាស់ នៅពេលដែលខ្ញុំរបស់អល់ឡោះម្នាក់( មូហាំម៉ាត់) ក្រោកឈរឡើង ដើម្បីថ្វាយបង្គំនោះ ពួកគេ( ជិន) មួយក្រុមស្ទើរតែប្រជ្រៀតគ្នាទៅរកគេ( ដើម្បីស្តាប់គេសូត្រគម្ពីរគួរអាន) ។

قُلۡ إِنَّمَآ أَدۡعُواْ رَبِّي وَلَآ أُشۡرِكُ بِهِۦٓ أَحَدٗا ﴿٢٠﴾

២០-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ពិតប្រាកដណាស់ ខ្ញុំគោរពសក្ការៈចំពោះម្ចាស់របស់ខ្ញុំតែមួយគត់ ហើយខ្ញុំមិនគោរពសក្ការៈអ្នកណាម្នាក់រួមជាមួយនឹងទ្រង់ឡើយ ។

قُلۡ إِنِّي لَآ أَمۡلِكُ لَكُمۡ ضَرّٗا وَلَا رَشَدٗا ﴿٢١﴾

២១-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ពិតប្រាកដណាស់ ខ្ញុំគ្មាន

លទ្ធភាពការពារពួកអ្នកពីគ្រោះថ្នាក់ ហើយក៏គ្មានលទ្ធភាពផ្តល់ផលប្រយោជន៍ដល់ពួកអ្នកដែរ ។

قُلۡ إِنِّي لَن يُجِيرَنِي مِنَ ٱللَّهِ أَحَدٞ وَلَنۡ أَجِدَ مِن دُونِهِۦ مُلۡتَحَدًا ٢٢

២២-ចូរអ្នកពោលថាៈ ពិតប្រាកដណាស់ គ្មានអ្នកណាម្នាក់អាចជួយសង្គ្រោះខ្ញុំឱ្យរួចផុតពីទារុណកម្មរបស់អល់ឡោះបានឡើយ ហើយខ្ញុំក៏គ្មានកន្លែងជ្រកកោនណាផ្សេងពីទ្រង់ដែរ ។

إِلَّا بَلَٰغٗا مِّنَ ٱللَّهِ وَرِسَٰلَٰتِهِۦۚ وَمَن يَعۡصِ ٱللَّهَ وَرَسُولَهُۥ فَإِنَّ لَهُۥ نَارَ جَهَنَّمَ خَٰلِدِينَ فِيهَآ أَبَدًا ٢٣

២៣-ប៉ុន្តែខ្ញុំគ្រាន់តែជាអ្នកផ្សព្វផ្សាយបទបញ្ជាពីអល់ឡោះ និងសាររបស់ទ្រង់តែប៉ុណ្ណោះ ។ អ្នកណាហើយប្រឆាំងនឹងអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់នោះ ពិតប្រាកដណាស់ សម្រាប់គេគឺនរកជើហាន់ណាំ ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ ។

حَتَّىٰٓ إِذَا رَأَوۡاْ مَا يُوعَدُونَ فَسَيَعۡلَمُونَ مَنۡ أَضۡعَفُ نَاصِرٗا وَأَقَلُّ عَدَدٗا ٢٤

២៤-លុះនៅពេលដែលពួកគេ( ពួកគ្មានជំនឿ) បានឃើញនូវអ្វី( ទារុណកម្ម) ដែលពួកគេត្រូវគេសន្យានោះ ពួកគេនឹងដឹងថា តើអ្នកណាមានជំនួយខ្សោយជាងគេ និងមានបក្សពួកតិចជាងគេ?

قُلۡ إِنۡ أَدۡرِيٓ أَقَرِيبٞ مَّا تُوعَدُونَ أَمۡ يَجۡعَلُ لَهُۥ رَبِّيٓ أَمَدًا ٢٥

២៥-ចូរអ្នក( មូហាំម៉ាត់) ពោលថាៈ ខ្ញុំមិនដឹងទេថា តើទារុណ-កម្មដែលគេសន្យាចំពោះពួកអ្នកនោះនឹងកើតឡើងក្នុងពេលឆាប់ៗនេះ ឬក៏ម្ចាស់របស់ខ្ញុំពន្យារពេលវាឱ្យយូរអង្វែង?

عَٰلِمُ ٱلۡغَيۡبِ فَلَا يُظۡهِرُ عَلَىٰ غَيۡبِهِۦٓ أَحَدًا ٢٦

២៦-ទ្រង់ជាម្ចាស់ដែលដឹងនូវប្រការអាថ៌កំបាំង ហើយទ្រង់មិនលាតត្រដាងអាថ៌កំបាំងរបស់ទ្រង់ឱ្យនរណាម្នាក់ឃើញឡើយ ។

إِلَّا مَنِ ٱرۡتَضَىٰ مِن رَّسُولٖ فَإِنَّهُۥ يَسۡلُكُ مِنۢ بَيۡنِ يَدَيۡهِ وَمِنۡ خَلۡفِهِۦ رَصَدٗا ٢٧

២៧-លើកលែងតែអ្នកណាដែលទ្រង់ជ្រើសរើសគេធ្វើជាអ្នកនាំសារប៉ុណ្ណោះ ។ ពិតប្រាកដណាស់ ទ្រង់បានចាត់តាំងអ្នកយាម( ម៉ា-ឡាអ៊ីកាត់) នៅខាងមុខគេ( អ្នកនាំសារ) និងនៅខាងក្រោយគេ ។

لِّيَعۡلَمَ أَن قَدۡ أَبۡلَغُواْ رِسَٰلَٰتِ رَبِّهِمۡ وَأَحَاطَ بِمَا لَدَيۡهِمۡ وَأَحۡصَىٰ كُلَّ شَيۡءٍ عَدَدَۢا ٢٨

២៨-ដើម្បីឱ្យគេ( មូហាំម៉ាត់) ដឹងថា ពួកគេ( អ្នកនាំសារមុនៗ) ពិតជាបានផ្តល់សារនៃម្ចាស់របស់ពួកគេ ហើយទ្រង់ដឹងជ្រួតជ្រាបនូវអ្វីដែលពួកគេមាន ហើយទ្រង់ដឹងចំនួនគ្រប់អ្វីៗទាំងអស់ ។

## سورة المزمل

## ជំពូកអាល់មូសហ្សាំមិល

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

يَٰٓأَيُّهَا ٱلۡمُزَّمِّلُ ١

១-ឱអ្នកដែលដណ្តប់ភួយ( មូហាំម៉ាត់) !

قُمِ ٱلَّيۡلَ إِلَّا قَلِيلٗا ﴿٢﴾

២-ចូរអ្នកក្រោកនៅពេលយប់(ដើម្បីសឡាត) លើកលែងតែបន្តិចបន្តួចប៉ុណ្ណោះ(ដើម្បីសម្រាក)។

نِّصۡفَهُۥٓ أَوِ ٱنقُصۡ مِنۡهُ قَلِيلًا ﴿٣﴾

៣-ពាក់កណ្ដាលយប់ ឬតិចជាងនេះបន្តិច។

أَوۡ زِدۡ عَلَيۡهِ وَرَتِّلِ ٱلۡقُرۡءَانَ تَرۡتِيلًا ﴿٤﴾

៤-ឬច្រើនជាងពាក់កណ្ដាលយប់បន្តិច។ ហើយចូរអ្នកសូត្រគម្ពីរគួរអានតាមបែបបទយីត៧ និងឱ្យច្បាស់លាស់។

إِنَّا سَنُلۡقِي عَلَيۡكَ قَوۡلٗا ثَقِيلًا ﴿٥﴾

៥-ពិតប្រាកដណាស់ យើងនឹងបញ្ចុះឱ្យអ្នកនូវគម្ពីរគួរអានដ៏ឧត្តុង្គឧត្តម(ដែលមានច្បាប់គ្រប់បែបយ៉ាង)។

إِنَّ نَاشِئَةَ ٱلَّيۡلِ هِيَ أَشَدُّ وَطۡـٔٗا وَأَقۡوَمُ قِيلًا ﴿٦﴾

៦-ពិតប្រាកដណាស់ ការក្រោកនៅពេលយប់(ដើម្បីថ្វាយបង្គំ)នោះ គឺវាធ្វើឱ្យចិត្តមានភាពនឹងនរ និងធ្វើឱ្យការសូត្រគម្ពីរគួរអានមានភាពត្រឹមត្រូវជាងពេលថ្ងៃ។

إِنَّ لَكَ فِي ٱلنَّهَارِ سَبۡحٗا طَوِيلٗا ﴿٧﴾

៧-ពិតប្រាកដណាស់ សម្រាប់អ្នក(មូហាំម៉ាត់)នៅពេលថ្ងៃគឺមានការងារជាច្រើន។

وَٱذۡكُرِ ٱسۡمَ رَبِّكَ وَتَبَتَّلۡ إِلَيۡهِ تَبۡتِيلٗا ﴿٨﴾

៨-ហើយចូរអ្នករំលឹកនាមនៃម្ចាស់របស់អ្នក និងត្រូវគោរពសក្ការៈចំពោះទ្រង់ដោយចិត្តស្មោះស។

رَّبُّ ٱلۡمَشۡرِقِ وَٱلۡمَغۡرِبِ لَآ إِلَٰهَ إِلَّا هُوَ فَٱتَّخِذۡهُ وَكِيلٗا ﴿٩﴾

៩-អល់ឡោះជាម្ចាស់នៃទិសខាងកើតនិងទិសខាងលិចដែលគ្មានម្ចាស់ណាផ្សេងត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ។ ដូច្នេះ ចូរអ្នកយកទ្រង់ធ្វើជាអ្នកគាំពារចុះ។

وَٱصۡبِرۡ عَلَىٰ مَا يَقُولُونَ وَٱهۡجُرۡهُمۡ هَجۡرٗا جَمِيلٗا ﴿١٠﴾

១០-ហើយចូរអ្នកអត់ធ្មត់ទៅលើអ្វីដែលពួកគេនិយាយអាក្រក់(ចំពោះអ្នក) និងត្រូវចាកចេញឱ្យឆ្ងាយពីពួកគេក្នុងលក្ខណៈមួយដ៏ល្អប្រពៃ។

وَذَرۡنِي وَٱلۡمُكَذِّبِينَ أُوْلِي ٱلنَّعۡمَةِ وَمَهِّلۡهُمۡ قَلِيلًا ﴿١١﴾

១១-ហើយចូរអ្នក(មូហាំម៉ាត់)ទុកឱ្យយើងចាត់ចែងជាមួយពួកដែលប្រឆាំងដែលមានកិត្តិយស និងទុកពេលឱ្យពួកគេបន្តិចសិនចុះ។

إِنَّ لَدَيۡنَآ أَنكَالٗا وَجَحِيمٗا ﴿١٢﴾

១២-ពិតប្រាកដណាស់ (នៅថ្ងៃបរលោក)យើងមានខ្សែច្រវ៉ាក់ដ៏ធ្ងន់ និងនរកជើហ៊ីម(សម្រាប់ពួកគេ)។

وَطَعَامٗا ذَا غُصَّةٖ وَعَذَابًا أَلِيمٗا ﴿١٣﴾

១៣-និងចំណីអាហារដ៏អាក្រក់ដែលធ្វើឱ្យគេស្លាក់ ហើយនិង

ទារុណកម្មដ៏សែនឈឺចាប់ថែមទៀតផង។

១៤-នៅថ្ងៃដែលផែនដី និងភ្នំនឹងរញ្ជួយ ហើយភ្នំនឹងក្លាយទៅជាពំនូកខ្សាច់ដែលប៉ើងខ្ចាត់ខ្ចាយ។

يَوْمَ تَرْجُفُ ٱلْأَرْضُ وَٱلْجِبَالُ وَكَانَتِ ٱلْجِبَالُ كَثِيبًا مَّهِيلًا ﴿١٤﴾

១៥-ពិតប្រាកដណាស់ យើងបានបញ្ជូនអ្នកនាំសារម្នាក់(មូហាំម៉ាត់)ទៅកាន់ពួកអ្នក(អ្នកស្រុកម៉ាក្កះ)ដែលធ្វើជាសាក្សីលើពួកអ្នកបីដូចជាយើងបានបញ្ជូនអ្នកនាំសារម្នាក់(មូសា)ទៅកាន់ហ្វៀរអោននោះដែរ។

إِنَّآ أَرْسَلْنَآ إِلَيْكُمْ رَسُولًا شَٰهِدًا عَلَيْكُمْ كَمَآ أَرْسَلْنَآ إِلَىٰ فِرْعَوْنَ رَسُولًا ﴿١٥﴾

១៦-ហើយហ្វៀរអោនបានប្រឆាំងនឹងអ្នកនាំសារនោះ។ ដូច្នេះយើងបានដាក់ទារុណកម្មគេដ៏ធ្ងន់ធ្ងរ។

فَعَصَىٰ فِرْعَوْنُ ٱلرَّسُولَ فَأَخَذْنَٰهُ أَخْذًا وَبِيلًا ﴿١٦﴾

១៧-ដូច្នេះ តើពួកអ្នកអាចការពារខ្លួនពីថ្ងៃដែលទ្រង់នឹងធ្វើឱ្យក្មេងក្លាយជាសក់សបានយ៉ាងដូចម្ដេច បើពួកអ្នកបានប្រឆាំងហើយនោះ?

فَكَيْفَ تَتَّقُونَ إِن كَفَرْتُمْ يَوْمًا يَجْعَلُ ٱلْوِلْدَٰنَ شِيبًا ﴿١٧﴾

១៨-មេឃនឹងបែកខ្ទេចខ្ទីដោយសារតែភាពជ្រួលច្របល់នៅថ្ងៃនោះ។ ការសន្យារបស់ទ្រង់គឺត្រូវបានអនុវត្តចំពោះពួកគេ។

ٱلسَّمَآءُ مُنفَطِرٌۢ بِهِۦ ۚ كَانَ وَعْدُهُۥ مَفْعُولًا ﴿١٨﴾

១៩-ពិតប្រាកដណាស់ រឿងទាំងនេះគឺជាការរំលឹកមួយ។ ដូច្នេះអ្នកណាហើយចង់រួចផុតពីទារុណកម្ម គេពិតជាជ្រើសរើសយកមាគ៌ាទៅកាន់ម្ចាស់របស់គេជាមិនខាន។

إِنَّ هَٰذِهِۦ تَذْكِرَةٌ ۖ فَمَن شَآءَ ٱتَّخَذَ إِلَىٰ رَبِّهِۦ سَبِيلًا ﴿١٩﴾

២០-ពិតប្រាកដណាស់ ម្ចាស់របស់អ្នក(មូហាំម៉ាត់)ដឹងថា: អ្នកពិតជាក្រោកថ្វាយបង្គំតិចជាងពីរភាគបីនៃពេលយប់ ជួនកាលពាក់កណ្ដាលយប់ និងជួនកាលមួយភាគបីនៃពេលយប់។ ហើយមួយក្រុមអំពីអ្នកដែលនៅជាមួយនឹងអ្នកក៏ធ្វើដូច្នោះដែរ។ ហើយអល់ឡោះគឺជាអ្នកកំណត់ពេលយប់និងពេលថ្ងៃ។ ទ្រង់បានដឹងថាពួកអ្នកមិនអាចឈរសឡាតពេញមួយយប់បានឡើយ ដូច្នេះទ្រង់បានបន្ធូរបន្ថយដល់ពួកអ្នក។ ហើយចូរពួកអ្នកសូត្រអ្វីដែលងាយស្រួលអំពីគម្ពីរគួរអានចុះ។ ទ្រង់ក៏បានដឹងដែរថា នៅក្នុងចំណោមពួកអ្នកមានអ្នកខ្លះនឹងមានជម្ងឺ ហើយអ្នកខ្លះត្រូវធ្វើដំណើរលើ

۞ إِنَّ رَبَّكَ يَعْلَمُ أَنَّكَ تَقُومُ أَدْنَىٰ مِن ثُلُثَىِ ٱلَّيْلِ وَنِصْفَهُۥ وَثُلُثَهُۥ وَطَآئِفَةٌ مِّنَ ٱلَّذِينَ مَعَكَ ۚ وَٱللَّهُ يُقَدِّرُ ٱلَّيْلَ وَٱلنَّهَارَ ۚ عَلِمَ أَن لَّن تُحْصُوهُ فَتَابَ عَلَيْكُمْ ۖ فَٱقْرَءُوا۟ مَا تَيَسَّرَ مِنَ ٱلْقُرْءَانِ ۚ عَلِمَ أَن سَيَكُونُ مِنكُم مَّرْضَىٰ ۙ وَءَاخَرُونَ يَضْرِبُونَ فِى ٱلْأَرْضِ يَبْتَغُونَ مِن فَضْلِ ٱللَّهِ ۙ وَءَاخَرُونَ يُقَٰتِلُونَ فِى سَبِيلِ ٱللَّهِ ۖ

فَٱقۡرَءُواْ مَا تَيَسَّرَ مِنۡهُۚ وَأَقِيمُواْ ٱلصَّلَوٰةَ وَءَاتُواْ
ٱلزَّكَوٰةَ وَأَقۡرِضُواْ ٱللَّهَ قَرۡضًا حَسَنٗاۚ وَمَا
تُقَدِّمُواْ لِأَنفُسِكُم مِّنۡ خَيۡرٖ تَجِدُوهُ عِندَ ٱللَّهِ
هُوَ خَيۡرٗا وَأَعۡظَمَ أَجۡرٗاۚ وَٱسۡتَغۡفِرُواْ ٱللَّهَۖ إِنَّ
ٱللَّهَ غَفُورٞ رَّحِيمُۢ ٢٠

ផែនដី ដើម្បីស្វែងរកលាភសក្ការៈរបស់អល់ឡោះ ហើយអ្នកខ្លះទៀតតស៊ូប្រយុទ្ធក្នុងមាគ៌ារបស់អល់ឡោះ។ ដូច្នេះ ចូរពួកអ្នកសូត្រអ្វីដែលងាយស្រួលអំពីវា(គម្ពីរគួរអាន)ចុះ។ ហើយចូរពួកអ្នកប្រតិបត្តិសឡាត និងបរិច្ចាគហ្សាកាត់ និងឱ្យអល់ឡោះខ្ចីនូវកម្ចីមួយដ៏ល្អប្រពៃ(បរិច្ចាគទ្រព្យសម្បត្តិក្នុងមាគ៌ាអល់ឡោះ)។ ហើយអ្វីដែលពួកអ្នកបានសាងសម្រាប់ខ្លួនឯងអំពីប្រការល្អនោះ ពួកអ្នកនឹងទទួលបាននូវភាពល្អប្រសើរនិងផលបុណ្យដ៏ធំធេងពីអល់ឡោះវិញ។ ហើយចូរពួកអ្នកសុំអភ័យទោសពីអល់ឡោះ។ ពិតប្រាកដណាស់ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

## سورة المدثر

## ជំពូកអាល់មូដាស់សៀរ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

يَٰٓأَيُّهَا ٱلۡمُدَّثِّرُ ١

១-ឱអ្នកដណ្តប់ភួយ(មូហាំម៉ាត់)!

قُمۡ فَأَنذِرۡ ٢

២-ចូរអ្នកក្រោកឡើង ហើយចូរអ្នកដាស់តឿនព្រមាន(មនុស្សលោកអំពីទារុណកម្មរបស់អល់ឡោះ)។

وَرَبَّكَ فَكَبِّرۡ ٣

៣-ហើយចូរអ្នកលើកតម្កើងម្ចាស់របស់អ្នកចុះ។

وَثِيَابَكَ فَطَهِّرۡ ٤

៤-ហើយចូរអ្នកសំអាតសំលៀកបំពាក់របស់អ្នក។

وَٱلرُّجۡزَ فَٱهۡجُرۡ ٥

៥-ហើយចូរអ្នកចៀសឱ្យឆ្ងាយពីអំពើស្ហ៊ីរិក។

وَلَا تَمۡنُن تَسۡتَكۡثِرُ ٦

៦-ហើយចូរអ្នកកុំឱ្យអ្វីដល់គេ ដោយអ្នកចង់បានការតបស្នងច្រើនមកវិញឱ្យសោះ។

وَلِرَبِّكَ فَٱصۡبِرۡ ٧

៧-ហើយដើម្បីបំពេញបទបញ្ជានៃម្ចាស់របស់អ្នក ចូរអ្នកអត់ធ្មត់។

فَإِذَا نُقِرَ فِي ٱلنَّاقُورِ ٨

៨-ព្រោះនៅពេលដែលគេផ្លុំត្រែ។

فَذَٰلِكَ يَوۡمَئِذٖ يَوۡمٌ عَسِيرٌ ٩

៩-គឺថ្ងៃនោះហើយ ជាថ្ងៃដែលលំបាកបំផុត។

عَلَى ٱلۡكَٰفِرِينَ غَيۡرُ يَسِيرٖ ١٠

១០-ចំពោះពួកប្រឆាំង គឺគ្មានការងាយស្រួលឡើយ។

ذَرۡنِي وَمَنۡ خَلَقۡتُ وَحِيدٗا ﴿١١﴾

១១-ចូរអ្នក(មូហាំម៉ាត់)ទុកឱ្យយើងជាមួយនឹងអ្នកដែលយើងបានបង្កើតគេតែម្នាក់ឯងចុះ ។

وَجَعَلۡتُ لَهُۥ مَالٗا مَّمۡدُودٗا ﴿١٢﴾

១២-ហើយយើងបានធ្វើឱ្យគេមានទ្រព្យសម្បត្តិច្រើនស្តុកស្តម្ភ ។

وَبَنِينَ شُهُودٗا ﴿١٣﴾

១៣-និងមានកូនចៅដែលនៅជាមួយគេ ។

وَمَهَّدتُّ لَهُۥ تَمۡهِيدٗا ﴿١٤﴾

១៤-ហើយយើងបានធ្វើឱ្យគេរស់នៅយ៉ាងសុខស្រួល ។

ثُمَّ يَطۡمَعُ أَنۡ أَزِيدَ ﴿١٥﴾

១៥-បន្ទាប់មក គេមានភាពលោភលន់ចង់ឱ្យយើងបន្ថែមឱ្យគេទៀត ។

كَلَّآۖ إِنَّهُۥ كَانَ لِأٓيَٰتِنَا عَنِيدٗا ﴿١٦﴾

១៦-មិនដូច្នោះទេ! ពិតប្រាកដណាស់ គេគឺជាអ្នកដែលប្រឆាំងរឹងរូសចំពោះអាយ៉ាត់របស់យើង ។

سَأُرۡهِقُهُۥ صَعُودًا ﴿١٧﴾

១៧-យើងនឹងធ្វើឱ្យគេមានទុក្ខលំបាកយ៉ាងធ្ងន់ធ្ងរ ។

إِنَّهُۥ فَكَّرَ وَقَدَّرَ ﴿١٨﴾

១៨-ព្រោះពិតប្រាកដណាស់ គេបានសញ្ជឹងគិត(ចំពោះពាក្យសំដីរបស់មូហាំម៉ាត់) និងបានរៀបគំរោងធ្វើអាក្រក់ ។

فَقُتِلَ كَيۡفَ قَدَّرَ ﴿١٩﴾

១៩-ដូច្នេះ គេត្រូវបានដាក់បណ្តាសា ។ តើគេរៀបគំរោងធ្វើអាក្រក់បានយ៉ាងដូចម្តេច?

ثُمَّ قُتِلَ كَيۡفَ قَدَّرَ ﴿٢٠﴾

២០-បន្ទាប់មក គេត្រូវបានដាក់បណ្តាសា ។ តើគេរៀបគំរោងធ្វើអាក្រក់បានយ៉ាងដូចម្តេច?

ثُمَّ نَظَرَ ﴿٢١﴾

២១-បន្ទាប់មក គេបានពិចារណា ។

ثُمَّ عَبَسَ وَبَسَرَ ﴿٢٢﴾

២២-បន្ទាប់មកទៀត គេបានធ្វើមុខក្រញូវ និងខឹងមួម៉ៅ ។

ثُمَّ أَدۡبَرَ وَٱسۡتَكۡبَرَ ﴿٢٣﴾

២៣-ក្រោយមក គេបានបែរចេញ(ពីការពិត)និងបានក្រអឺតក្រទមថែមទៀត ។

فَقَالَ إِنۡ هَٰذَآ إِلَّا سِحۡرٞ يُؤۡثَرُ ﴿٢٤﴾

២៤-រួចគេក៏បាននិយាយថា: នេះគ្មានអ្វីក្រៅពីមន្តអាគមដែលគេទទួលបានពីអ្នកជំនាន់មុននោះឡើយ ។

إِنۡ هَٰذَآ إِلَّا قَوۡلُ ٱلۡبَشَرِ ﴿٢٥﴾

២៥-នេះគ្មានអ្វីក្រៅពីពាក្យសំដីរបស់មនុស្សលោកឡើយ ។

سَأُصۡلِيهِ سَقَرَ ﴿٢٦﴾

២៦-ហើយយើងនឹងបញ្ចូលគេទៅក្នុងនរកសាក័រ ។

وَمَآ أَدۡرَىٰكَ مَا سَقَرُ ﴿٢٧﴾

២៧-តើអ្វីដែលធ្វើឱ្យអ្នកដឹងថា នរកសាក័រជាអ្វីនោះ?

لَا تُبۡقِي وَلَا تَذَرُ ﴿٢٨﴾

២៨-វាមិនបន្សល់ទុកសាច់ឡើយ ហើយក៏មិនចោលឆ្អឹងដែរ ។

لَوَّاحَةٞ لِّلۡبَشَرِ ﴿٢٩﴾

២៩-(នរកសាក័រនោះ) វាដុតស្បែកមនុស្សលោក ។

عَلَيۡهَا تِسۡعَةَ عَشَرَ ﴿٣٠﴾

៣០-នៅក្នុងនរកសាក័រនោះ មានម៉ាឡាអ៊ីកាត់ដប់ប្រាំបួនរូប (ចាំធ្វើទារុណកម្ម) ។

وَمَا جَعَلۡنَآ أَصۡحَٰبَ ٱلنَّارِ إِلَّا مَلَٰٓئِكَةٗۙ وَمَا
جَعَلۡنَا عِدَّتَهُمۡ إِلَّا فِتۡنَةٗ لِّلَّذِينَ كَفَرُواْ
لِيَسۡتَيۡقِنَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ وَيَزۡدَادَ ٱلَّذِينَ
ءَامَنُوٓاْ إِيمَٰنٗاۙ وَلَا يَرۡتَابَ ٱلَّذِينَ أُوتُواْ
ٱلۡكِتَٰبَ وَٱلۡمُؤۡمِنُونَۙ وَلِيَقُولَ ٱلَّذِينَ فِي
قُلُوبِهِم مَّرَضٞ وَٱلۡكَٰفِرُونَ مَاذَآ أَرَادَ ٱللَّهُ بِهَٰذَا
مَثَلٗاۚ كَذَٰلِكَ يُضِلُّ ٱللَّهُ مَن يَشَآءُ وَيَهۡدِي
مَن يَشَآءُۚ وَمَا يَعۡلَمُ جُنُودَ رَبِّكَ إِلَّا هُوَۚ وَمَا
هِيَ إِلَّا ذِكۡرَىٰ لِلۡبَشَرِ ﴿٣١﴾

៣១-ហើយយើងមិនបានបង្កើតអ្នកការពារនរកក្រៅពីម៉ាឡាអ៊ីកាត់ឡើយ ។ ហើយយើងមិនបានបង្កើតចំនួនរបស់ពួកគេឡើយ លើកលែងតែជាការសាកល្បងចំពោះពួកដែលគ្មានជំនឿប៉ុណ្ណោះ ដើម្បីឱ្យបណ្ដាអ្នកដែលបានទទួលគម្ពីរ(ពួកយ៉ាហ៊ូទី និងណាសរ៉នី) ជឿជាក់យ៉ាងច្បាស់ និងដើម្បីឱ្យបណ្ដាអ្នកដែលមានជំនឿមានការជឿជាក់ថែមទៀត និងដើម្បីកុំឱ្យអ្នកដែលបានទទួលគម្ពីរ និងបណ្ដាអ្នកដែលមានជំនឿមានការសង្ស័យ ។ និងដើម្បីឱ្យបណ្ដាអ្នកដែលមានជំងឺនៅក្នុងចិត្តរបស់ពួកគេ និងពួកដែលប្រឆាំងនិយាយថា: តើអល់ឡោះមានបំណងអ្វីចំពោះឧទាហរណ៍ទាំងនេះ ។ ដូច្នេះដែរ អល់ឡោះធ្វើឱ្យវង្វេងចំពោះអ្នកណាដែលទ្រង់មានចេតនា ហើយក៏ចង្អុលបង្ហាញចំពោះអ្នកណាដែលទ្រង់មានចេតនាដែរ ។ ហើយគ្មាននរណាម្នាក់ដឹងពីចំនួនកងទ័ពនៃម្ចាស់របស់អ្នកក្រៅពីទ្រង់ឡើយ ហើយវា(នរកសាក័រ) ក៏គ្មានអ្វីក្រៅពីជាការរំលឹកដល់មនុស្សលោកដែរ ។

كَلَّا وَٱلۡقَمَرِ ﴿٣٢﴾

៣២-មិនដូច្នោះទេ! អល់ឡោះស្បថនឹងព្រះច័ន្ទ ។

وَٱلَّيۡلِ إِذۡ أَدۡبَرَ ﴿٣٣﴾

៣៣-និងពេលយប់នៅពេលវាបានកន្លងផុតទៅ ។

وَٱلصُّبۡحِ إِذَآ أَسۡفَرَ ﴿٣٤﴾

៣៤-និងពេលព្រឹកនៅពេលដែលវាបញ្ចេញពន្លឺ ។

إِنَّهَا لَإِحۡدَى ٱلۡكُبَرِ ﴿٣٥﴾

៣៥-ពិតប្រាកដណាស់ វា(នរកសាក័រ) ជាប្រការមួយដ៏ធំធេង ។

نَذِيرٗا لِّلۡبَشَرِ ﴿٣٦﴾

៣៦-ដើម្បីជាការព្រមានដល់មនុស្សលោក ។

لِمَن شَآءَ مِنكُمۡ أَن يَتَقَدَّمَ أَوۡ يَتَأَخَّرَ ٣٧

៣៧-សម្រាប់អ្នកណាដែលចង់ជ្រើសរើសមាគ៌ាឆ្ពោះទៅមុខ (ដោយដើរតាមមាគ៌ាត្រឹមត្រូវ) ឬស្ថិតនៅខាងក្រោយ(ដោយប្រព្រឹត្តបាបកម្ម)។

كُلُّ نَفۡسِۭ بِمَا كَسَبَتۡ رَهِينَةٌ ٣٨

៣៨-បុគ្គលគ្រប់រូបគឺត្រូវទទួលខុសត្រូវចំពោះអ្វីដែលខ្លួនបានប្រព្រឹត្តកន្លងមក។

إِلَّآ أَصۡحَٰبَ ٱلۡيَمِينِ ٣٩

៣៩-លើកលែងតែបណ្ដាអ្នកដែលទទួលសៀវភៅខាងដៃស្ដាំប៉ុណ្ណោះ។

فِي جَنَّٰتٖ يَتَسَآءَلُونَ ٤٠

៤០-ពួកគេសួរគ្នានៅក្នុងឋានសួគ៌

عَنِ ٱلۡمُجۡرِمِينَ ٤١

៤១-អំពីពួកប្រព្រឹត្តបាបកម្មថាៈ

مَا سَلَكَكُمۡ فِي سَقَرَ ٤٢

៤២-ហេតុអ្វីបានជាទ្រង់បញ្ចូលពួកអ្នកទៅក្នុងនរកសាក័រ ?

قَالُواْ لَمۡ نَكُ مِنَ ٱلۡمُصَلِّينَ ٤٣

៤៣-ពួកគេបានឆ្លើយថាៈ ពួកយើងកាលពីមុនមិនបានស្ថិតក្នុងចំណោមអ្នកដែលប្រតិបត្ដិសឡាតឡើយ។

وَلَمۡ نَكُ نُطۡعِمُ ٱلۡمِسۡكِينَ ٤٤

៤៤-ហើយយើងមិនធ្លាប់បានផ្ដល់ចំណីអាហារដល់អ្នកក្រីក្រឡើយ។

وَكُنَّا نَخُوضُ مَعَ ٱلۡخَآئِضِينَ ٤٥

៤៥-ហើយពួកយើងធ្លាប់បាននិយាយភូតកុហកជាមួយនឹងពួកដែលនិយាយកុហក។

وَكُنَّا نُكَذِّبُ بِيَوۡمِ ٱلدِّينِ ٤٦

៤៦-ហើយពួកយើងក៏ធ្លាប់បានបដិសេធនឹងថ្ងៃបរលោក

حَتَّىٰٓ أَتَىٰنَا ٱلۡيَقِينُ ٤٧

៤៧-រហូតទាល់តែសេចក្ដីស្លាប់បានមកដល់ពួកយើង។

فَمَا تَنفَعُهُمۡ شَفَٰعَةُ ٱلشَّٰفِعِينَ ٤٨

៤៨-ហើយការធ្វើអន្ដរាគមន៍របស់បណ្ដាអ្នកអន្ដរាគមន៍គឺគ្មានផលប្រយោជន៍អ្វីដល់ពួកគេឡើយ។

فَمَا لَهُمۡ عَنِ ٱلتَّذۡكِرَةِ مُعۡرِضِينَ ٤٩

៤៩-ដូច្នេះ ហេតុអ្វីបានជាពួកគេងាកចេញពីការរំលឹក(គម្ពីរគួរអាន)ទៅវិញ?

كَأَنَّهُمۡ حُمُرٞ مُّسۡتَنفِرَةٞ ٥٠

៥០-ពួកទាំងនោះប្រៀបដូចជាសត្វលាដែលផ្អើល

فَرَّتۡ مِن قَسۡوَرَةِۭ ٥١

៥១-ដែលវារត់គេចពីសត្វតោ។

៥២-ផ្ទុយទៅវិញ បុគ្គលគ្រប់រូបមានបំណងចង់ឱ្យគេផ្តល់គម្ពីរដែលរីកសុសសាយ(ដូចគម្ពីរគួរអាន)ដែរ។

بَلْ يُرِيدُ كُلُّ ٱمْرِيٍٕ مِّنْهُمْ أَن يُؤْتَىٰ صُحُفًا مُّنَشَّرَةً ﴿٥٢﴾

៥៣-មិនដូច្នោះទេ ផ្ទុយទៅវិញពួកគេមិនខ្លាចថ្ងៃបរលោកឡើយ។

كَلَّا ۖ بَل لَّا يَخَافُونَ ٱلْءَاخِرَةَ ﴿٥٣﴾

៥៤-ទេ! ពិតប្រាកដណាស់ គម្ពីរគួរអានគឺជាការរំលឹក។

كَلَّآ إِنَّهُۥ تَذْكِرَةٌ ﴿٥٤﴾

៥៥-ដូច្នេះ អ្នកណាហើយមានបំណង គេពិតជានឹងយកវាធ្វើជាមេរៀន។

فَمَن شَآءَ ذَكَرَهُۥ ﴿٥٥﴾

៥៦-ហើយពួកគេមិនទទួលវាយកជាមេរៀនឡើយ លើកលែងតែអល់ឡោះមានចេតនាប៉ុណ្ណោះ។ ទ្រង់គឺជាម្ចាស់ដែលត្រូវគេកោតខ្លាច និងជាម្ចាស់ដែលអភ័យទោស។

وَمَا يَذْكُرُونَ إِلَّآ أَن يَشَآءَ ٱللَّهُ ۚ هُوَ أَهْلُ ٱلتَّقْوَىٰ وَأَهْلُ ٱلْمَغْفِرَةِ ﴿٥٦﴾

## ជំពូកអាល់គីយ៉ាម៉ះ

## سورة القيامة

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

១-យើង(អល់ឡោះ)ស្បថនឹងថ្ងៃបរលោក។

لَآ أُقْسِمُ بِيَوْمِ ٱلْقِيَٰمَةِ ﴿١﴾

២-ហើយយើងស្បថនឹងជីវិត(អ្នកមានជំនឿ)ដែលមានការសោកស្តាយចំពោះខ្លួនឯង។

وَلَآ أُقْسِمُ بِٱلنَّفْسِ ٱللَّوَّامَةِ ﴿٢﴾

៣-តើមនុស្សលោក(អ្នកដែលគ្មានជំនឿ)នឹកស្មានថា យើងគ្មានលទ្ធភាពប្រមូលឆ្អឹងរបស់គេឬ?

أَيَحْسَبُ ٱلْإِنسَٰنُ أَلَّن نَّجْمَعَ عِظَامَهُۥ ﴿٣﴾

៤-មិនដូច្នោះទេ! តាមពិតយើងជាអ្នកមានលទ្ធភាពគ្រប់គ្រាន់ក្នុងការរៀបសន្លាក់ឆ្អឹង ម្រាមដៃ ម្រាមជើងរបស់គេឱ្យមានលក្ខណៈពេញលេញដូចដើមវិញ។

بَلَىٰ قَٰدِرِينَ عَلَىٰٓ أَن نُّسَوِّىَ بَنَانَهُۥ ﴿٤﴾

៥-ផ្ទុយទៅវិញ មនុស្សលោកនៅតែមានបំណងចង់ប្រព្រឹត្តបាបកម្មដដែល

بَلْ يُرِيدُ ٱلْإِنسَٰنُ لِيَفْجُرَ أَمَامَهُۥ ﴿٥﴾

៦-ដោយគេសួរថា: តើថ្ងៃបរលោកនឹងកើតឡើងនៅពេលណា?

يَسْـَٔلُ أَيَّانَ يَوْمُ ٱلْقِيَٰمَةِ ﴿٦﴾

៧-នៅពេលដែលភ្នែកស្រឡាំងកាំង(ដោយសារស្លាន

فَإِذَا بَرِقَ ٱلْبَصَرُ ﴿٧﴾

ភាពថ្ងៃបរលោក)

وَخَسَفَ ٱلْقَمَرُ ﴿٨﴾

៨-និងព្រះច័ន្ទបាត់ពន្លឺ

وَجُمِعَ ٱلشَّمْسُ وَٱلْقَمَرُ ﴿٩﴾

៩-ហើយព្រះអាទិត្យនិងព្រះច័ន្ទត្រូវបានគេប្រមូល

يَقُولُ ٱلْإِنسَـٰنُ يَوْمَئِذٍ أَيْنَ ٱلْمَفَرُّ ﴿١٠﴾

១០-ថ្ងៃនោះមនុស្សលោកនឹងនិយាយថា: តើពួកយើងត្រូវរត់ទៅទីណា ?

كَلَّا لَا وَزَرَ ﴿١١﴾

១១-ទេ! គ្មានកន្លែងរត់ឡើយ ។

إِلَىٰ رَبِّكَ يَوْمَئِذٍ ٱلْمُسْتَقَرُّ ﴿١٢﴾

១២-កន្លែងវិលត្រឡប់នៅថ្ងៃនោះមានតែឆ្ពោះទៅកាន់ម្ចាស់របស់អ្នកប៉ុណ្ណោះ ។

يُنَبَّؤُا۟ ٱلْإِنسَـٰنُ يَوْمَئِذٍۭ بِمَا قَدَّمَ وَأَخَّرَ ﴿١٣﴾

១៣-នៅថ្ងៃនោះមនុស្សលោកត្រូវគេប្រាប់នូវអ្វីដែលគេបានប្រព្រឹត្តកន្លងមក និងអ្វីដែលគេមិនបានប្រព្រឹត្ត ។

بَلِ ٱلْإِنسَـٰنُ عَلَىٰ نَفْسِهِۦ بَصِيرَةٌ ﴿١٤﴾

១៤-ផ្ទុយទៅវិញ មនុស្សលោកគឺជាអ្នកធ្វើសាក្សីលើខ្លួនឯង ។

وَلَوْ أَلْقَىٰ مَعَاذِيرَهُۥ ﴿١٥﴾

១៥-ហើយទោះបីជាគេបាននាំមកនូវការដោះសាររបស់គេយ៉ាងណាក៏ដោយ( ក៏គ្មានប្រយោជន៍អ្វីដល់គេដែរ) ។

لَا تُحَرِّكْ بِهِۦ لِسَانَكَ لِتَعْجَلَ بِهِۦٓ ﴿١٦﴾

១៦-ចូរអ្នក( មូហាំម៉ាត់) កុំកម្រើកអណ្តាតរបស់អ្នកចំពោះការសូត្រវាព្រោះតែប្រញាប់ទន្ទេញវាឱ្យសោះ ។

إِنَّ عَلَيْنَا جَمْعَهُۥ وَقُرْءَانَهُۥ ﴿١٧﴾

១៧-ពិតប្រាកដណាស់ យើងជាអ្នកទទួលខុសត្រូវថែរក្សាវា( នៅក្នុងចិត្តរបស់អ្នក) ហើយឱ្យអ្នកស្ទាត់ជំនាញក្នុងការសូត្រវា ។

فَإِذَا قَرَأْنَـٰهُ فَٱتَّبِعْ قُرْءَانَهُۥ ﴿١٨﴾

១៨-ដូច្នេះ នៅពេលដែលយើងបានសូត្រវា( តាមរយៈជីព្រីល) ចូរអ្នកត្រាប់តាមការសូត្ររបស់វាចុះ ។

ثُمَّ إِنَّ عَلَيْنَا بَيَانَهُۥ ﴿١٩﴾

១៩-បន្ទាប់មក ពិតប្រាកដណាស់ យើងជាអ្នកទទួលខុសត្រូវក្នុងការបំភ្លឺវា ។

كَلَّا بَلْ تُحِبُّونَ ٱلْعَاجِلَةَ ﴿٢٠﴾

២០-ទេ! ផ្ទុយទៅវិញ ពួកអ្នកស្រឡាញ់ចូលចិត្តការរស់នៅក្នុងលោកិយ

وَتَذَرُونَ ٱلْـَٔاخِرَةَ ﴿٢١﴾

២១-ហើយពួកអ្នកបោះបង់ថ្ងៃបរលោក ។

وُجُوهٌ يَوْمَئِذٍ نَّاضِرَةٌ ﴿٢٢﴾

២២-វង់ភ័ក្រ្ត( អ្នកដែលមានជំនឿ) នៅថ្ងៃនោះគឺមានពន្លឺចែង

ចាំង

إِلَىٰ رَبِّهَا نَاظِرَةٌ (٢٣)

២៣-ដោយបានមើលទៅកាន់ម្ចាស់របស់ពួកគេ ។

وَوُجُوهٌ يَوْمَئِذٍ بَاسِرَةٌ (٢٤)

២៤-រីឯមុខ(អ្នកដែលគ្មានជំនឿ)នៅថ្ងៃនោះគឺក្រញូវ

تَظُنُّ أَن يُفْعَلَ بِهَا فَاقِرَةٌ (٢٥)

២៥-ដោយពួកគេគិតយ៉ាងច្បាស់ថា គេនឹងធ្វើទារុណកម្មពួកគេយ៉ាងធ្ងន់ធ្ងរ ។

كَلَّآ إِذَا بَلَغَتِ ٱلتَّرَاقِيَ (٢٦)

២៦-មិនដូច្នោះទេ! នៅពេលដែលវា(ដង្ហើម)បានមកដល់បំពង់ក ។

وَقِيلَ مَنْ رَاقٍ (٢٧)

២៧-ហើយមានគេនិយាយថា: តើអ្នកណាជាអ្នកព្យាបាល(ឱ្យរួចផុតពីសេចក្តីស្លាប់បាន)?

وَظَنَّ أَنَّهُ ٱلْفِرَاقُ (٢٨)

២៨-ហើយគេបានជឿយ៉ាងច្បាស់ថា: គេពិតជាលាចាកពីលោកិយជាមិនខាន ។

وَٱلْتَفَّتِ ٱلسَّاقُ بِٱلسَّاقِ (٢٩)

២៩-ហើយកំភួនជើងឆ្វេងបានចងភ្ជាប់នឹងកំភួនជើងស្តាំ ។

إِلَىٰ رَبِّكَ يَوْمَئِذٍ ٱلْمَسَاقُ (٣٠)

៣០-កន្លែងវិលត្រឡប់នៅថ្ងៃនោះ គឺឆ្ពោះទៅកាន់ម្ចាស់របស់អ្នក ។

فَلَا صَدَّقَ وَلَا صَلَّىٰ (٣١)

៣១-ហើយគេមិនបានជឿ(លើអ្នកនាំសារ និងគម្ពីរគួរអាន)និងមិនបានសឡាតឡើយ ។

وَلَٰكِن كَذَّبَ وَتَوَلَّىٰ (٣٢)

៣២-ក៏ប៉ុន្តែគេបានបដិសេធ និងបានបែរចេញ(ពីការពិត) ។

ثُمَّ ذَهَبَ إِلَىٰٓ أَهْلِهِۦ يَتَمَطَّىٰٓ (٣٣)

៣៣-បន្ទាប់មក គេបានទៅជួបជុំគ្រួសាររបស់គេដោយអួតអាង ។

أَوْلَىٰ لَكَ فَأَوْلَىٰ (٣٤)

៣៤-វិនាសអន្តរាយហើយអ្នក(អ្នកគ្មានជំនឿ) ហើយក៏វិនាសអន្តរាយទៀត ។

ثُمَّ أَوْلَىٰ لَكَ فَأَوْلَىٰٓ (٣٥)

៣៥-បន្ទាប់មក វិនាសអន្តរាយហើយអ្នក(អ្នកគ្មានជំនឿ)ហើយក៏វិនាសអន្តរាយទៀត ។

أَيَحْسَبُ ٱلْإِنسَٰنُ أَن يُتْرَكَ سُدًى (٣٦)

៣៦-តើមនុស្សលោកនឹកស្មានថា: គេបោះបង់ចោលដោយមិនអើពើឬ?

៣៧-តើគេមិនបង្កើតមនុស្សលោកអំពីមួយតំណក់ទឹកកាម
ដែលគេបានបញ្ចូលទៅក្នុងស្បូនទេឬ?

أَلَمۡ يَكُ نُطۡفَةٗ مِّن مَّنِيّٖ يُمۡنَىٰ ٣٧

៣៨-បន្ទាប់មកគេក៏ក្លាយទៅជាដុំឈាម ហើយទ្រង់បានបង្កើត
វា រួចក៏ធ្វើឱ្យមានរូបរាងពេញលក្ខណៈ ។

ثُمَّ كَانَ عَلَقَةٗ فَخَلَقَ فَسَوَّىٰ ٣٨

៣៩-ក្រោយមកទ្រង់បានបង្កើតអំពីវាជាគូៗមានប្រុសនិងស្រី ។

فَجَعَلَ مِنۡهُ ٱلزَّوۡجَيۡنِ ٱلذَّكَرَ وَٱلۡأُنثَىٰٓ ٣٩

៤០-តើនោះមិនមែនជាអ្នកដែលមានលទ្ធភាពគ្រប់គ្រាន់ក្នុង
ការធ្វើឱ្យមនុស្សស្លាប់រស់ឡើងវិញទេឬ?

أَلَيۡسَ ذَٰلِكَ بِقَٰدِرٍ عَلَىٰٓ أَن يُحۡـِۧيَ ٱلۡمَوۡتَىٰ ٤٠

## ជំពូកអាល់អ៊ីនសាន

## سورة الإنسان

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-ជាការពិតណាស់ រយៈពេលដ៏យូរបានកន្លងផុតពីមនុស្ស
លោក ខណៈដែលមនុស្សលោកពុំទាន់កើតមានឡើង ដែលគេមិន
ដឹងថាវាជាអ្វីសោះនោះ ។

هَلۡ أَتَىٰ عَلَى ٱلۡإِنسَٰنِ حِينٞ مِّنَ ٱلدَّهۡرِ لَمۡ
يَكُن شَيۡـٔٗا مَّذۡكُورًا ١

២-ពិតប្រាកដណាស់ យើងបានបង្កើតមនុស្សលោកអំពីតំណក់
ទឹកកាមដែលលាយចូលគ្នា ដើម្បីយើងនឹងសាកល្បងគេ ។ រួចមក
យើងបានធ្វើឱ្យគេស្តាប់ឮ និងមើលឃើញ ។

إِنَّا خَلَقۡنَا ٱلۡإِنسَٰنَ مِن نُّطۡفَةٍ أَمۡشَاجٖ نَّبۡتَلِيهِ
فَجَعَلۡنَٰهُ سَمِيعَۢا بَصِيرًا ٢

៣-ពិតប្រាកដណាស់ យើងបានចង្អុលបង្ហាញគេនូវមាគ៌ាដ៏ត្រឹម
ត្រូវ ។ គេអាចជាអ្នកដឹងគុណ ឬជាអ្នករមិលគុណ ។

إِنَّا هَدَيۡنَٰهُ ٱلسَّبِيلَ إِمَّا شَاكِرٗا وَإِمَّا
كَفُورًا ٣

៤-ពិតប្រាកដណាស់ យើងបានរៀបចំច្រវាក់ដែក និងខ្នោះ និង
នរកឆេះសន្ធោសន្ធៅសម្រាប់ពួកដែលប្រឆាំង ។

إِنَّآ أَعۡتَدۡنَا لِلۡكَٰفِرِينَ سَلَٰسِلَاْ وَأَغۡلَٰلٗا
وَسَعِيرًا ٤

៥-ពិតប្រាកដណាស់ បណ្តាអ្នកដែលសាងអំពើល្អ គឺពួកគេទទួល
ទានស្រាដែលលាយជាមួយវាអំពីទឹកក្រអូប "កាហ្វួរ" ។

إِنَّ ٱلۡأَبۡرَارَ يَشۡرَبُونَ مِن كَأۡسٖ كَانَ
مِزَاجُهَا كَافُورًا ٥

៦-ប្រភពទឹកដែលខ្ញុំរបស់អល់ឡោះនឹងទទួលទានវានៅក្នុង
ឋានសួគ៌ ពួកគេអាចប្រើប្រាស់វាតាមចំណង់ចិត្ត ។

عَيۡنٗا يَشۡرَبُ بِهَا عِبَادُ ٱللَّهِ يُفَجِّرُونَهَا
تَفۡجِيرٗا ٦

يُوفُونَ بِٱلنَّذۡرِ وَيَخَافُونَ يَوۡمٗا كَانَ شَرُّهُۥ مُسۡتَطِيرٗا ٧

៧-ពួកគេបំពេញនូវការតព្វកិច្ចដែលពួកគេបានប៉ង(ក្នុងការប្រតិបត្តិតាមអល់ឡោះ) ហើយពួកគេកោតខ្លាចថ្ងៃមួយដែលទារុណកម្មរបស់វារាលដាលគ្រប់ទីកន្លែង។

وَيُطۡعِمُونَ ٱلطَّعَامَ عَلَىٰ حُبِّهِۦ مِسۡكِينٗا وَيَتِيمٗا وَأَسِيرًا ٨

៨-ហើយពួកគេផ្តល់ចំណីអាហារដែលពួកគេចូលចិត្តដល់ជនក្រីក្រ និងកូនកំព្រា ហើយនិងឈ្លើយសឹក។

إِنَّمَا نُطۡعِمُكُمۡ لِوَجۡهِ ٱللَّهِ لَا نُرِيدُ مِنكُمۡ جَزَآءٗ وَلَا شُكُورًا ٩

៩-(ពួកគេនិយាយក្នុងចិត្តថា) ជាការពិតណាស់ ពួកយើងផ្តល់ចំណីអាហារដល់ពួកអ្នកដើម្បីស្វែងរកការអាណិតស្រឡាញ់របស់អល់ឡោះប៉ុណ្ណោះ ដោយពួកយើងមិនចង់បានការតបស្នង និងគុណបំណាច់អ្វីពីពួកអ្នកឡើយ។

إِنَّا نَخَافُ مِن رَّبِّنَا يَوۡمًا عَبُوسٗا قَمۡطَرِيرٗا ١٠

១០-ពិតប្រាកដណាស់ ពួកយើងកោតខ្លាចម្ចាស់របស់ពួកយើងនៅថ្ងៃមួយដែលម្នាក់ៗ(នៃពួកគ្មានជំនឿ) មុខក្រញូវ និងលំបាក។

فَوَقَىٰهُمُ ٱللَّهُ شَرَّ ذَٰلِكَ ٱلۡيَوۡمِ وَلَقَّىٰهُمۡ نَضۡرَةٗ وَسُرُورٗا ١١

១១-ដូច្នេះ អល់ឡោះបានការពារពួកគេពីគ្រោះអាក្រក់នៃថ្ងៃនោះ ហើយបានប្រទានឱ្យពួកគេនូវពន្លឺដ៏ត្រចះត្រចង់ និងសេចក្តីរីករាយទៀតផង។

وَجَزَىٰهُم بِمَا صَبَرُواْ جَنَّةٗ وَحَرِيرٗا ١٢

១២-ហើយទ្រង់បានតបស្នងដល់ពួកគេនូវឋានសួគ៌និងសំលៀកបំពាក់ដែលធ្វើអំពីសូត្រ ដោយសារតែអ្វីដែលពួកគេបានអត់ធ្មត់។

مُّتَّكِـِٔينَ فِيهَا عَلَى ٱلۡأَرَآئِكِۖ لَا يَرَوۡنَ فِيهَا شَمۡسٗا وَلَا زَمۡهَرِيرٗا ١٣

១៣-ដោយពួកគេអង្គុយផ្អែកនៅលើកៅអីនៅក្នុងឋានសួគ៌នោះ។ នៅក្នុងនោះពួកគេមិនត្រូវកំដៅព្រះអាទិត្យឡើយ ហើយក៏មិនរងាដែរ។

وَدَانِيَةً عَلَيۡهِمۡ ظِلَٰلُهَا وَذُلِّلَتۡ قُطُوفُهَا تَذۡلِيلٗا ١٤

១៤-ហើយម្លប់ដើមឈើរបស់វានៅជិតពួកគេ ហើយផ្លែឈើរបស់វា ត្រូវគេធ្វើឱ្យងាយស្រួលបេះបំផុត។

وَيُطَافُ عَلَيۡهِم بِـَٔانِيَةٖ مِّن فِضَّةٖ وَأَكۡوَابٖ كَانَتۡ قَوَارِيرَا۠ ١٥

១៥-ហើយគេដាក់នៅជុំវិញពួកគេដោយសំភារៈប្រើប្រាស់ដែលធ្វើអំពីប្រាក់និងពែងថ្មកែវភ្លឺផ្លេក។

قَوَارِيرَاْ مِن فِضَّةٖ قَدَّرُوهَا تَقۡدِيرٗا ١٦

១៦-ថ្មកែវនោះធ្វើអំពីប្រាក់ដែលពួកគេបានកំណត់វាយ៉ាងសមល្មម(សម្រាប់ទទួលទានតាមចំណង់ចិត្តរបស់ពួកគេ)។

១៧-ហើយនៅក្នុងឋានសួគ៌ ពួកគេត្រូវបានគេឱ្យទទួលទាន ស្រាដែលលាយជាមួយវានូវរសជាតិខ្ញី ។

وَيُسۡقَوۡنَ فِيهَا كَأۡسٗا كَانَ مِزَاجُهَا زَنجَبِيلًا ١٧

១៨-ប្រភពស្រានៅក្នុងឋានសួគ៌នោះគេឱ្យឈ្មោះថា: សាល់សាប៊ីល ។

عَيۡنٗا فِيهَا تُسَمَّىٰ سَلۡسَبِيلٗا ١٨

១៩-ហើយក្មេងៗដែលនៅវ័យក្មេងជាអមតៈ ដើរជុំវិញ( រង់ចាំបម្រើ) ពួកគេ ។ នៅពេលដែលអ្នក( មូហាំម៉ាត់) ឃើញពួកគេ អ្នកនឹងគិតថា ពួកគេជាគជ់ខ្យងដ៏ភ្លឺថែងចាំង ។

۞ وَيَطُوفُ عَلَيۡهِمۡ وِلۡدَٰنٞ مُّخَلَّدُونَ إِذَا رَأَيۡتَهُمۡ حَسِبۡتَهُمۡ لُؤۡلُؤٗا مَّنثُورٗا ١٩

២០-ហើយនៅពេលដែលអ្នក( មូហាំម៉ាត់) ក្រឡេកមើលទៅទីនោះ( ឋានសួគ៌) អ្នកនឹងឃើញនៀកម៉ាត់គ្រប់បែបយ៉ាង និងអំណាចដ៏ធំធេង ។

وَإِذَا رَأَيۡتَ ثَمَّ رَأَيۡتَ نَعِيمٗا وَمُلۡكٗا كَبِيرًا ٢٠

២១-នៅពីលើខ្លួនប្រាណរបស់ពួកគេ គឺសំលៀកបំពាក់ធ្វើអំពីសូត្រម៉ដ្លខៃ និងសូត្រក្រាស់ពណ៌បៃតង ។ ហើយពួកគេត្រូវបានគេបំពាក់កងដៃប្រាក់ ។ ហើយម្ចាស់របស់ពួកគេបានប្រទានឱ្យពួកគេនូវភេសជ្ជៈដ៏បរិសុទ្ធ ។

عَٰلِيَهُمۡ ثِيَابُ سُندُسٍ خُضۡرٞ وَإِسۡتَبۡرَقٞۖ وَحُلُّوٓاْ أَسَاوِرَ مِن فِضَّةٖ وَسَقَىٰهُمۡ رَبُّهُمۡ شَرَابٗا طَهُورًا ٢١

២២-ពិតប្រាកដណាស់ នេះគឺជាការតបស្នងសម្រាប់ពួកអ្នក ហើយការខំប្រឹងប្រែងរបស់ពួកអ្នកកន្លងមកត្រូវបានគេទទួលយក ។

إِنَّ هَٰذَا كَانَ لَكُمۡ جَزَآءٗ وَكَانَ سَعۡيُكُم مَّشۡكُورًا ٢٢

២៣-ពិតប្រាកដណាស់ យើងបានបញ្ចុះគម្ពីរគួរអានឱ្យអ្នកជាដំណាក់កាលៗ ។

إِنَّا نَحۡنُ نَزَّلۡنَا عَلَيۡكَ ٱلۡقُرۡءَانَ تَنزِيلٗا ٢٣

២៤-ដូច្នេះ ចូរអ្នក( មូហាំម៉ាត់) អត់ធ្មត់ចំពោះបទបញ្ញតិនៃម្ចាស់របស់អ្នក ហើយកុំប្រតិបត្តិតាមអ្នកដែលប្រព្រឹត្តបាបកម្ម ឬអ្នកប្រឆាំងក្នុងចំណោមពួកគេឱ្យសោះ ។

فَٱصۡبِرۡ لِحُكۡمِ رَبِّكَ وَلَا تُطِعۡ مِنۡهُمۡ ءَاثِمًا أَوۡ كَفُورٗا ٢٤

២៥-ហើយចូរអ្នករំលឹកនាមនៃម្ចាស់របស់អ្នកទាំងព្រឹកទាំងល្ងាច ។

وَٱذۡكُرِ ٱسۡمَ رَبِّكَ بُكۡرَةٗ وَأَصِيلٗا ٢٥

២៦-ហើយក្នុងអំឡុងពេលយប់ ចូរអ្នកស៊ូជូត( ថ្វាយបង្គំ) ចំពោះទ្រង់ និងលើកតម្កើងទ្រង់នៅពេលយប់ជ្រៅ ។

وَمِنَ ٱلَّيۡلِ فَٱسۡجُدۡ لَهُۥ وَسَبِّحۡهُ لَيۡلٗا طَوِيلًا ٢٦

២៧-ពិតប្រាកដណាស់ ពួកទាំងនោះ( ពួកមូស្ហ៊ីគីន) ស្រឡាញ់

إِنَّ هَٰٓؤُلَآءِ يُحِبُّونَ ٱلۡعَاجِلَةَ وَيَذَرُونَ

وَرَآءَهُمۡ يَوۡمٗا ثَقِيلٗا ٢٧

ការរស់នៅក្នុងលោកិយ ហើយពួកគេបោះបង់ថ្ងៃដែលមានភាពវឹកវរដ៏ខ្លាំងក្លា(ថ្ងៃបរលោក)ដាក់ក្រោយខ្នងរបស់ពួកគេ។

نَّحۡنُ خَلَقۡنَٰهُمۡ وَشَدَدۡنَآ أَسۡرَهُمۡۖ وَإِذَا شِئۡنَا بَدَّلۡنَآ أَمۡثَٰلَهُمۡ تَبۡدِيلًا ٢٨

២៨-យើងគឺជាអ្នកដែលបានបង្កើតពួកគេ និងបានពង្រឹងរាងកាយរបស់ពួកគេ។ តែបើយើងមានចេតនា(បំផ្លាញពួកគេ) យើងក៏អាចផ្លាស់ប្តូរក្រុមផ្សេងទៀតដូចពួកគេមកជំនួសវិញបានដែរ។

إِنَّ هَٰذِهِۦ تَذۡكِرَةٞۖ فَمَن شَآءَ ٱتَّخَذَ إِلَىٰ رَبِّهِۦ سَبِيلٗا ٢٩

២៩-ពិតប្រាកដណាស់ ជំពូកនេះគឺជាការរំលឹកមួយ។ ដូច្នេះអ្នកណាហើយប្រាថ្នាចង់បានល្អនោះ គេពិតជាជ្រើសរើសមាគ៌ាទៅកាន់ម្ចាស់របស់គេជាមិនខាន។

وَمَا تَشَآءُونَ إِلَّآ أَن يَشَآءَ ٱللَّهُۚ إِنَّ ٱللَّهَ كَانَ عَلِيمًا حَكِيمٗا ٣٠

៣០-ហើយពួកអ្នកមិនអាចមានបំណងធ្វើអ្វីមួយបានឡើយ លើកលែងតែអល់ឡោះមានចេតនាប៉ុណ្ណោះ។ ពិតប្រាកដណាស់ អល់ឡោះមហាដឹង មហាគតិបណ្ឌិត។

يُدۡخِلُ مَن يَشَآءُ فِي رَحۡمَتِهِۦۚ وَٱلظَّٰلِمِينَ أَعَدَّ لَهُمۡ عَذَابًا أَلِيمَۢا ٣١

៣១-ដោយទ្រង់នឹងបញ្ចូលទៅក្នុងក្តីមេត្តាករុណារបស់ទ្រង់ចំពោះអ្នកណាដែលទ្រង់មានចេតនា។ ហើយពួកដែលបំពាន ទ្រង់បានរៀបចំសម្រាប់ពួកគេនូវទារុណកម្មដ៏សែនឈឺចាប់។

## سورة المرسلات

## ជំពូកអាល់មួរសាឡាត

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

وَٱلۡمُرۡسَلَٰتِ عُرۡفٗا ١

១-អល់ឡោះស្បថនឹងខ្យល់(ឬម៉ាឡាអ៊ីកាត់)ដែលត្រូវគេបញ្ជូនមកជាបន្តបន្ទាប់។

فَٱلۡعَٰصِفَٰتِ عَصۡفٗا ٢

២-និងខ្យល់ព្យុះដ៏ខ្លាំងក្លា។

وَٱلنَّٰشِرَٰتِ نَشۡرٗا ٣

៣-និងម៉ាឡាអ៊ីកាត់ដែលពង្រាយពពក និងទឹកភ្លៀង។

فَٱلۡفَٰرِقَٰتِ فَرۡقٗا ٤

៤-និងម៉ាឡាអ៊ីកាត់ដែលបែងចែកនូវប្រការពិត និងប្រការមិនពិត។

فَٱلۡمُلۡقِيَٰتِ ذِكۡرًا ٥

៥-និងម៉ាឡាអ៊ីកាត់ដែលនាំសារមកឱ្យបណ្តាអ្នកនាំសារ។

عُذۡرًا أَوۡ نُذۡرًا ٦

៦-ដើម្បីបដិសេធរាល់ការដោះសា ឬជាការដាស់តឿនព្រមាន។

إِنَّمَا تُوعَدُونَ لَوَٰقِعٞ ٧

៧-ពិតប្រាកដណាស់ អ្វីដែលគេសន្យានឹងពួកអ្នកនឹងកើតឡើង

យ៉ាងពិតប្រាកដ ។

៨-បន្ទាប់មកនៅពេលដែលហ្វូងផ្កាយត្រូវបានគេធ្វើឱ្យបាត់ពន្លឺ ។

៩-ហើយនៅពេលដែលមេឃត្រូវគេធ្វើឱ្យបែកធ្លុះធ្លាយ ។

១០-ហើយនៅពេលដែលភ្នំត្រូវគេធ្វើឱ្យផ្ទុះប៉ើងខ្ទេចខ្ទី ។

១១-ហើយនៅពេលដែលបណ្តាអ្នកនាំសារត្រូវគេប្រមូលតាមកាលកំណត់ ។

១២-តើបណ្តាអ្នកនាំសារត្រូវបានគេពន្យារពេលប្រមូលរហូតដល់ថ្ងៃណា?

១៣-គឺរហូតដល់ថ្ងៃកាត់សេចក្តី ។

១៤-តើអ្វីដែលធ្វើឱ្យអ្នកដឹងថា ថ្ងៃវិនិច្ឆ័យជាអ្វីនោះ ?

១៥-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត ។

១៦-តើយើងមិនបានបំផ្លាញពួកជំនាន់មុន( ដែលបានប្រព្រឹត្តបាបកម្ម) ទេឬ?

១៧-បន្ទាប់មក យើងធ្វើឱ្យពួកជំនាន់ក្រោយវិនាសបន្តបន្ទាប់ពីពួកគេទៀត ។

១៨-ដូច្នេះដែរ យើងធ្វើទៅលើពួកប្រព្រឹត្តបាបកម្ម ។

១៩-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត ។

២០-តើយើងមិនបានបង្កើតពួកអ្នកអំពីទឹកកាមដែលគ្មានតម្លៃទេឬ ?

២១-ក្រោយមកយើងបានបង្កើតវានៅក្នុងកន្លែងមួយដែលមានសុវត្ថិភាព( នៅក្នុងស្បូន)

២២-រហូតដល់ពេលដែលត្រូវគេកំណត់ដ៏ជាក់លាក់ ។

فَإِذَا ٱلنُّجُومُ طُمِسَتۡ ٨

وَإِذَا ٱلسَّمَآءُ فُرِجَتۡ ٩

وَإِذَا ٱلۡجِبَالُ نُسِفَتۡ ١٠

وَإِذَا ٱلرُّسُلُ أُقِّتَتۡ ١١

لِأَيِّ يَوۡمٍ أُجِّلَتۡ ١٢

لِيَوۡمِ ٱلۡفَصۡلِ ١٣

وَمَآ أَدۡرَىٰكَ مَا يَوۡمُ ٱلۡفَصۡلِ ١٤

وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ١٥

أَلَمۡ نُهۡلِكِ ٱلۡأَوَّلِينَ ١٦

ثُمَّ نُتۡبِعُهُمُ ٱلۡأٓخِرِينَ ١٧

كَذَٰلِكَ نَفۡعَلُ بِٱلۡمُجۡرِمِينَ ١٨

وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ١٩

أَلَمۡ نَخۡلُقكُّم مِّن مَّآءٖ مَّهِينٖ ٢٠

فَجَعَلۡنَٰهُ فِي قَرَارٖ مَّكِينٍ ٢١

إِلَىٰ قَدَرٖ مَّعۡلُومٖ ٢٢

فَقَدَرْنَا فَنِعْمَ ٱلْقَـٰدِرُونَ ﴿٢٣﴾

២៣-ហើយយើងបានកំណត់(រូបរាង និងលក្ខណៈរបស់មនុស្សលោកតាមដែលយើងមានចេតនា) ។ ដូច្នេះ យើងគឺជាអ្នកដែលកំណត់ដ៏ប្រសើរបំផុត ។

وَيْلٌ يَوْمَئِذٍ لِّلْمُكَذِّبِينَ ﴿٢٤﴾

២៤-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត ។

أَلَمْ نَجْعَلِ ٱلْأَرْضَ كِفَاتًا ﴿٢٥﴾

២៥-តើយើងមិនបានបង្កើតផែនដីជាកន្លែងប្រមូលផ្តុំ

أَحْيَآءً وَأَمْوَٰتًا ﴿٢٦﴾

២៦-ទាំងអ្នករស់និងអ្នកស្លាប់ទេឬ ?

وَجَعَلْنَا فِيهَا رَوَٰسِىَ شَـٰمِخَـٰتٍ وَأَسْقَيْنَـٰكُم مَّآءً فُرَاتًا ﴿٢٧﴾

២៧-ហើយយើងបានបង្កើតភ្នំខ្ពស់ៗនៅលើវានិងបានផ្តល់ទឹកបរិសុទ្ធឱ្យពួកអ្នក ។

وَيْلٌ يَوْمَئِذٍ لِّلْمُكَذِّبِينَ ﴿٢٨﴾

២៨-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត ។

ٱنطَلِقُوٓا۟ إِلَىٰ مَا كُنتُم بِهِۦ تُكَذِّبُونَ ﴿٢٩﴾

២៩-(មានគេនិយាយទៅកាន់ពួកគេថា) ចូរពួកអ្នកដើរទៅកាន់អ្វី(នរក)ដែលពួកអ្នកធ្លាប់បានបដិសេធនឹងវាចុះ ។

ٱنطَلِقُوٓا۟ إِلَىٰ ظِلٍّ ذِى ثَلَـٰثِ شُعَبٍ ﴿٣٠﴾

៣០-ចូរពួកអ្នកដើរទៅកាន់ម្លប់(ផ្សែងនៃភ្លើងនរក)ដែលលាតសន្ធឹងជាបីផ្នែកនោះចុះ ។

لَّا ظَلِيلٍ وَلَا يُغْنِى مِنَ ٱللَّهَبِ ﴿٣١﴾

៣១-គ្មានម្លប់ណាត្រជាក់ ហើយក៏គ្មានអ្វីអាចការពារពីអណ្តាតភ្លើងនរកបានដែរ ។

إِنَّهَا تَرْمِى بِشَرَرٍ كَٱلْقَصْرِ ﴿٣٢﴾

៣២-ពិតប្រាកដណាស់ វាជះផ្កាភ្លើងឡើងខ្ពស់ដូចជាវិមាន ។

كَأَنَّهُۥ جِمَـٰلَتٌ صُفْرٌ ﴿٣٣﴾

៣៣-វា(ផ្កាភ្លើង)ហាក់បីដូចជាហ្វូងសត្វអូដ្ឋសម្បុរលឿង ។

وَيْلٌ يَوْمَئِذٍ لِّلْمُكَذِّبِينَ ﴿٣٤﴾

៣៤-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត ។

هَـٰذَا يَوْمُ لَا يَنطِقُونَ ﴿٣٥﴾

៣៥-នេះគឺជាថ្ងៃដែលពួកគេមិនអាចនិយាយបានឡើយ ។

وَلَا يُؤْذَنُ لَهُمْ فَيَعْتَذِرُونَ ﴿٣٦﴾

៣៦-ហើយពួកគេមិនត្រូវគេអនុញ្ញាតឱ្យនិយាយដោះសាបានឡើយ ។

وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٣٧﴾

៣៧-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត ។

هَٰذَا يَوۡمُ ٱلۡفَصۡلِۖ جَمَعۡنَٰكُمۡ وَٱلۡأَوَّلِينَ ﴿٣٨﴾

៣៨-នេះហើយគឺជាថ្ងៃកាត់សេចក្តី ដែលយើងបានប្រមូលពួកអ្នក និងពួកជំនាន់មុន ។

فَإِن كَانَ لَكُمۡ كَيۡدٞ فَكِيدُونِ ﴿٣٩﴾

៣៩-ដូច្នេះ ប្រសិនបើពួកអ្នកមានល្បិចកល ចូរពួកអ្នករៀបល្បិចកលប្រឆាំងនឹងយើងចុះ ។

وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٤٠﴾

៤០-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត ។

إِنَّ ٱلۡمُتَّقِينَ فِي ظِلَٰلٖ وَعُيُونٖ ﴿٤١﴾

៤១-ពិតប្រាកដណាស់ បណ្តាអ្នកដែលកោតខ្លាចអល់ឡោះ គឺនៅក្នុងម្លប់ជាមួយនឹងប្រភពទឹកដ៏ច្រើន ។

وَفَوَٰكِهَ مِمَّا يَشۡتَهُونَ ﴿٤٢﴾

៤២-និងមានផ្លែឈើគ្រប់ប្រភេទតាមអ្វីដែលពួកគេប្រាថ្នា ។

كُلُواْ وَٱشۡرَبُواْ هَنِيٓـَٔۢا بِمَا كُنتُمۡ تَعۡمَلُونَ ﴿٤٣﴾

៤៣-(មានគេនិយាយទៅកាន់ពួកគេថា) ចូរពួកអ្នកបរិភោគ និងទទួលដោយក្តីរីករាយដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្តចុះ ។

إِنَّا كَذَٰلِكَ نَجۡزِي ٱلۡمُحۡسِنِينَ ﴿٤٤﴾

៤៤-ដូច្នេះដែរ យើងពិតជានឹងតបស្នងដល់បណ្តាអ្នកដែលសាងអំពើល្អ ។

وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٤٥﴾

៤៥-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត ។

كُلُواْ وَتَمَتَّعُواْ قَلِيلًا إِنَّكُم مُّجۡرِمُونَ ﴿٤٦﴾

៤៦-(មានគេនិយាយទៅកាន់ពួកគ្មានជំនឿថា) ចូរពួកអ្នកបរិភោគ និងសោយសុខ(ក្នុងលោកិយ)មួយរយៈពេលខ្លីសិនចុះ ព្រោះពិតប្រាកដណាស់ ពួកអ្នកជាពួកប្រព្រឹត្តបាបកម្ម ។

وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٤٧﴾

៤៧-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត ។

وَإِذَا قِيلَ لَهُمُ ٱرۡكَعُواْ لَا يَرۡكَعُونَ ﴿٤٨﴾

៤៨-ហើយនៅពេលដែលមានគេនិយាយទៅកាន់ពួកគេថា: ចូរពួកអ្នកឱនគោរព(ចំពោះអល់ឡោះ)ចុះ ពួកគេបែរជាមិនឱនគោរពទៅវិញ ។

وَيْلٌ يَوْمَئِذٍ لِّلْمُكَذِّبِينَ ﴿٤٩﴾

៤៩-នៅថ្ងៃនោះ ការវិនាសអន្តរាយគឺសម្រាប់ពួកដែលបដិសេធនឹងការពិត។

فَبِأَيِّ حَدِيثٍ بَعْدَهُۥ يُؤْمِنُونَ ﴿٥٠﴾

៥០-ដូច្នេះ តើមានពាក្យសំដីណាមួយបន្ទាប់ពីវា( គម្ពីរគួរអាន) ដែលធ្វើឱ្យពួកគេមានជំនឿនោះ?

## سورة النبإ

## ជំពូកអាន់ណាប្ហាក

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

عَمَّ يَتَسَآءَلُونَ ﴿١﴾

១-តើពួកគេដេញដោលគ្នាអំពីរឿងអ្វី?

عَنِ ٱلنَّبَإِ ٱلْعَظِيمِ ﴿٢﴾

២-គឺអំពីដំណឹងដ៏សំខាន់

ٱلَّذِى هُمْ فِيهِ مُخْتَلِفُونَ ﴿٣﴾

៣-ដែលពួកគេកំពុងតែខ្វែងគំនិតគ្នាអំពីវា។

كَلَّا سَيَعْلَمُونَ ﴿٤﴾

៤-ទេ! ពួកគេគង់តែនឹងដឹង។

ثُمَّ كَلَّا سَيَعْلَمُونَ ﴿٥﴾

៥-ទេ! បន្ទាប់មកពួកគេគង់តែនឹងដឹងយ៉ាងច្បាស់។

أَلَمْ نَجْعَلِ ٱلْأَرْضَ مِهَٰدًا ﴿٦﴾

៦-តើយើងមិនបានបង្កើតផែនដីឱ្យមានសណ្ឋានរាបស្មើ

وَٱلْجِبَالَ أَوْتَادًا ﴿٧﴾

៧-និងភ្នំទាំងឡាយជាបង្គោលស្ទឹងទេឬ?

وَخَلَقْنَٰكُمْ أَزْوَٰجًا ﴿٨﴾

៨-ហើយយើងបានបង្កើតពួកអ្នកជាគូៗ( ប្រុស និងស្រី)។

وَجَعَلْنَا نَوْمَكُمْ سُبَاتًا ﴿٩﴾

៩-ហើយយើងបានបង្កើតការដេករបស់ពួកអ្នកទុកជាការឈប់សម្រាក។

وَجَعَلْنَا ٱلَّيْلَ لِبَاسًا ﴿١٠﴾

១០-ហើយយើងបានបង្កើតពេលយប់ជាការបិទបាំង។

وَجَعَلْنَا ٱلنَّهَارَ مَعَاشًا ﴿١١﴾

១១-ហើយយើងបានបង្កើតពេលថ្ងៃជាការរស់នៅ។

وَبَنَيْنَا فَوْقَكُمْ سَبْعًا شِدَادًا ﴿١٢﴾

១២-ហើយយើងបានបង្កើតមេឃប្រាំពីរជាន់ដ៏រឹងមាំនៅពីលើពួកអ្នក។

وَجَعَلْنَا سِرَاجًا وَهَّاجًا ﴿١٣﴾

១៣-ហើយយើងបានបង្កើតព្រះអាទិត្យដែលមានពន្លឺចែងចាំង។

وَأَنزَلْنَا مِنَ ٱلْمُعْصِرَٰتِ مَآءً ثَجَّاجًا ﴿١٤﴾

១៤-ហើយយើងបានបញ្ចុះពីដុំពពកនូវទឹកភ្លៀងស្រោចស្រព

គ្រប់ទីកន្លែង។

لِّنُخۡرِجَ بِهِۦ حَبّٗا وَنَبَاتٗا ﴿١٥﴾
១៥-ដើម្បីយើងនឹងបញ្ចេញតាមរយៈវានូវគ្រាប់ធញ្ញជាតិ និងរុក្ខជាតិគ្រប់ប្រភេទ។

وَجَنَّٰتٍ أَلۡفَافًا ﴿١٦﴾
១៦-និងចំការដំណាំដែលមានផលានុផលគ្រប់ប្រភេទ។

إِنَّ يَوۡمَ ٱلۡفَصۡلِ كَانَ مِيقَٰتٗا ﴿١٧﴾
១៧-ពិតប្រាកដណាស់ ថ្ងៃកាត់សេចក្ដីគឺមានពេលកំណត់ច្បាស់លាស់។

يَوۡمَ يُنفَخُ فِي ٱلصُّورِ فَتَأۡتُونَ أَفۡوَاجٗا ﴿١٨﴾
១៨-នៅថ្ងៃដែលគេផ្លុំត្រែ ពេលនោះពួកអ្នកនឹងមក(កាន់កន្លែងជំនុំជំរះ)ជាក្រុមៗ។

وَفُتِحَتِ ٱلسَّمَآءُ فَكَانَتۡ أَبۡوَٰبٗا ﴿١٩﴾
១៩-ហើយមេឃនឹងត្រូវគេបើកចំហ ពេលនោះវាមានទ្វារជាច្រើន។

وَسُيِّرَتِ ٱلۡجِبَالُ فَكَانَتۡ سَرَابًا ﴿٢٠﴾
២០-ហើយភ្នំទាំងឡាយត្រូវបានគេធ្វើឱ្យរបើកចេញពីកន្លែងរបស់វា ហើយវារសាត់ដូចធូលី។

إِنَّ جَهَنَّمَ كَانَتۡ مِرۡصَادٗا ﴿٢١﴾
២១-ពិតប្រាកដណាស់ នរកជើហាន់ណាំគឺជាកន្លែងត្រៀម។

لِّلطَّٰغِينَ مَـَٔابٗا ﴿٢٢﴾
២២-ជាកន្លែងរស់នៅសម្រាប់ពួកដែលបំពាន។

لَّٰبِثِينَ فِيهَآ أَحۡقَابٗا ﴿٢٣﴾
២៣-ដោយពួកគេរស់នៅទីនោះជារៀងរហូត។

لَّا يَذُوقُونَ فِيهَا بَرۡدٗا وَلَا شَرَابًا ﴿٢٤﴾
២៤-ពួកគេមិនដែលស្គាល់រសជាតិត្រជាក់នៅទីនោះឡើយ ហើយក៏គ្មានទឹកផឹកដែរ។

إِلَّا حَمِيمٗا وَغَسَّاقٗا ﴿٢٥﴾
២៥-មានតែទឹកក្ដៅ និងខ្ទុះប៉ុណ្ណោះ

جَزَآءٗ وِفَاقًا ﴿٢٦﴾
២៦-ជាការតបស្នងដ៏សមហេតុផលបំផុត។

إِنَّهُمۡ كَانُواْ لَا يَرۡجُونَ حِسَابٗا ﴿٢٧﴾
២៧-ពិតប្រាកដណាស់ ពួកគេគឺជាពួកដែលមិនសង្ឃឹមថានឹងជួបការជំនុំជំរះឡើយ។

وَكَذَّبُواْ بِـَٔايَٰتِنَا كِذَّابٗا ﴿٢٨﴾
២៨-ថែមទាំងពួកគេបានបដិសេធនឹងអាយ៉ាត់ៗរបស់យើងទៀតផង។

وَكُلَّ شَيۡءٍ أَحۡصَيۡنَٰهُ كِتَٰبٗا ﴿٢٩﴾
២៩-ហើយអ្វីៗទាំងអស់យើងបានកត់ត្រាវាទុកនៅក្នុងសៀវភៅកំណត់ត្រា(ឡាវហុលម៉ះហ្វូស)រួចជាស្រេច។

فَذُوقُواْ فَلَن نَّزِيدَكُمۡ إِلَّا عَذَابًا ﴿٣٠﴾

៣០-ដូច្នេះ ចូរពួកអ្នកភ្លក្សចុះ ហើយយើងមិនបន្ថែមអ្វីឱ្យពួកអ្នកក្រៅពីទារុណកម្មឡើយ ។

إِنَّ لِلۡمُتَّقِينَ مَفَازًا ﴿٣١﴾

៣១-ពិតប្រាកដណាស់ ភាពជោគជ័យគឺសម្រាប់បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះ ។

حَدَآئِقَ وَأَعۡنَٰبًا ﴿٣٢﴾

៣២-គឺ(ពួកគេ) មានចំការដំណាំ និងចំការទំពាំងបាយជូរ ។

وَكَوَاعِبَ أَتۡرَابًا ﴿٣٣﴾

៣៣-និងមានស្ដ្រីព្រហ្មចារីជាច្រើនដែលមានវ័យស្មើៗគ្នា ។

وَكَأۡسًا دِهَاقًا ﴿٣٤﴾

៣៤-ព្រមទាំងកែវដែលពេញទៅដោយស្រាបជាស្រេច ។

لَّا يَسۡمَعُونَ فِيهَا لَغۡوًا وَلَا كِذَّٰبًا ﴿٣٥﴾

៣៥-នៅក្នុងវា(ឋានសួគ៌) ពួកគេមិនឮពាក្យសំដីដែលឥតប្រយោជន៍ឡើយ ហើយក៏មិនឮពាក្យភូតកុហកដែរ ។

جَزَآءً مِّن رَّبِّكَ عَطَآءً حِسَابًا ﴿٣٦﴾

៣៦-គឺជាការតបស្នងពីម្ចាស់របស់អ្នកដែលជាអំណោយមួយដ៏ពេញលេញ ។

رَّبِّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَمَا بَيۡنَهُمَا
ٱلرَّحۡمَٰنِۖ لَا يَمۡلِكُونَ مِنۡهُ خِطَابًا ﴿٣٧﴾

៣៧-គឺមកពីម្ចាស់គ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី និងអ្វីៗដែលនៅរវាងវាទាំងពីរ ។ នេះគឺមកពីម្ចាស់មហាសប្បុរស ។ ពួកគេ(មនុស្សលោក) មិនអាចនិយាយអ្វីបានឡើយ លុះត្រាតែមានការអនុញ្ញាតពីទ្រង់ ។

يَوۡمَ يَقُومُ ٱلرُّوحُ وَٱلۡمَلَٰٓئِكَةُ صَفًّاۖ لَّا
يَتَكَلَّمُونَ إِلَّا مَنۡ أَذِنَ لَهُ ٱلرَّحۡمَٰنُ وَقَالَ
صَوَابًا ﴿٣٨﴾

៣៨-នៅថ្ងៃដែលជីព្រីល និងម៉ាឡាអ៊ីកាត់ទាំងឡាយឈរតំរៀបជាជួរៗ ពួកគេមិនអាចនិយាយអ្វីបានឡើយ លើកលែងតែអ្នកណាដែលម្ចាស់មហាសប្បុរសអនុញ្ញាតឱ្យគេ ហើយគេនិយាយនូវពាក្យសំដីណាដែលត្រឹមត្រូវប៉ុណ្ណោះ ។

ذَٰلِكَ ٱلۡيَوۡمُ ٱلۡحَقُّۖ فَمَن شَآءَ ٱتَّخَذَ إِلَىٰ رَبِّهِۦ
مَـَٔابًا ﴿٣٩﴾

៣៩-នោះគឺជាថ្ងៃដែលនឹងកើតឡើងយ៉ាងពិតប្រាកដ ។ ដូច្នេះ អ្នកណាហើយចង់(គេចផុតពីភាពលំបាកនៅថ្ងៃបរលោក) នោះ ចូរឱ្យគេជ្រើសរើសកន្លែងវិលត្រឡប់ទៅកាន់ម្ចាស់របស់គេចុះ ។

إِنَّآ أَنذَرۡنَٰكُمۡ عَذَابًا قَرِيبًا يَوۡمَ يَنظُرُ ٱلۡمَرۡءُ
مَا قَدَّمَتۡ يَدَاهُ وَيَقُولُ ٱلۡكَافِرُ يَٰلَيۡتَنِي
كُنتُ تُرَٰبَۢا ﴿٤٠﴾

៤០-ពិតប្រាកដណាស់ យើងបានដាស់តឿនព្រមានពួកអ្នកនូវទារុណកម្មដែលនៅជិតបំផុតនាថ្ងៃដែលបុគ្គលម្នាក់ៗមើលទៅចំពោះអ្វីដែលដៃទាំងពីររបស់គេបានប្រព្រឹត្តកន្លងមក ។ ហើយអ្នកគ្មានជំនឿនឹងនិយាយថាៈ ឱអនិច្ចា! ធ្វើម្ដេចទើបខ្ញុំក្លាយជាដីវិញ ។

## ជំពូកអាន់ណាហ្ស៊ីអាត

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

១-អល់ឡោះស្បថនឹងម៉ាឡាអ៊ីកាត់ដែលដកយកជីវិតពួកដែលគ្មានជំនឿដោយឃោរឃៅ។

២-និងម៉ាឡាអ៊ីកាត់ដែលដកយកជីវិតអ្នកមានជំនឿដោយថ្នមៗ។

៣-និងម៉ាឡាអ៊ីកាត់ដែលចុះពីលើមេឃយ៉ាងលឿន។

៤-និងម៉ាឡាអ៊ីកាត់ដែលដណ្តើមគ្នានាំព្រលឹងអ្នកមានជំនឿឆ្ពោះទៅកាន់ឋានសួគ៌។

៥-និងម៉ាឡាអ៊ីកាត់ដែលរៀបចំបទបញ្ជារបស់អល់ឡោះ។

៦-នៅថ្ងៃដែល(មានការផ្លុំត្រែលើកទីមួយ)ផែនដីនិងភ្នំទាំងឡាយរញ្ជួយយ៉ាងខ្លាំង(អ្វីៗទាំងអស់ត្រូវវិនាសអន្តរាយ)។

៧-ការផ្លុំត្រែលើកទីពីរកើតមានឡើង បន្ទាប់ពីលើកទីមួយ (អ្វីៗទាំងអស់ត្រូវរស់ឡើងវិញ)។

៨-នៅថ្ងៃនោះ ដួងចិត្ត(របស់ពួកគ្មានជំនឿ)ភ័យញាប់ញ័រ។

៩-កែវភ្នែករបស់ពួកគេទម្លាក់ចុះដោយសារការភ័យខ្លាច។

១០-ពួកគេ(ពួកគ្មានជំនឿ)និយាយថាៈ តើពួកយើងពិតជាត្រូវបានគេបញ្ជូនទៅកាន់ជីវិតដើម(របស់ពួកយើង)វិញឬ?

១១-តើ(គេពិតជាបញ្ជូនទៅកាន់ជីវិតដើមរបស់ពួកយើងវិញឬ) នៅពេលដែលពួកយើងបានក្លាយជាឆ្អឹងពុកផុយហើយនោះ ?

១២-ពួកគេបាននិយាយទៀតថាៈ ប្រសិនបើដូច្នោះមែននោះគឺជាការវិលត្រឡប់ដ៏ខាតបង់។

១៣-ពិតប្រាកដណាស់ វាគ្រាន់តែជាការផ្លុំត្រែ(លើកទីពីរ) មួយដងប៉ុណ្ណោះ។

១៤-ពេលនោះស្រាប់តែពួកគេរស់ឡើងវិញពាសពេញផែនដី។

## سورة النازعات

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

وَٱلنَّٰزِعَٰتِ غَرۡقٗا ﴿١﴾

وَٱلنَّٰشِطَٰتِ نَشۡطٗا ﴿٢﴾

وَٱلسَّٰبِحَٰتِ سَبۡحٗا ﴿٣﴾

فَٱلسَّٰبِقَٰتِ سَبۡقٗا ﴿٤﴾

فَٱلۡمُدَبِّرَٰتِ أَمۡرٗا ﴿٥﴾

يَوۡمَ تَرۡجُفُ ٱلرَّاجِفَةُ ﴿٦﴾

تَتۡبَعُهَا ٱلرَّادِفَةُ ﴿٧﴾

قُلُوبٞ يَوۡمَئِذٖ وَاجِفَةٌ ﴿٨﴾

أَبۡصَٰرُهَا خَٰشِعَةٞ ﴿٩﴾

يَقُولُونَ أَءِنَّا لَمَرۡدُودُونَ فِي ٱلۡحَافِرَةِ ﴿١٠﴾

أَءِذَا كُنَّا عِظَٰمٗا نَّخِرَةٗ ﴿١١﴾

قَالُواْ تِلۡكَ إِذٗا كَرَّةٌ خَاسِرَةٞ ﴿١٢﴾

فَإِنَّمَا هِيَ زَجۡرَةٞ وَٰحِدَةٞ ﴿١٣﴾

فَإِذَا هُم بِٱلسَّاهِرَةِ ﴿١٤﴾

هَلۡ أَتَىٰكَ حَدِيثُ مُوسَىٰٓ ﴿١٥﴾

១៥-តើរឿងរបស់មូសាបានមកដល់អ្នក(មូហាំម៉ាត់)ដែរឬទេ?

إِذۡ نَادَىٰهُ رَبُّهُۥ بِٱلۡوَادِ ٱلۡمُقَدَّسِ طُوًى ﴿١٦﴾

១៦-នៅពេលដែលម្ចាស់របស់គេហៅគេនៅឯជ្រលងភ្នំទូវ៉ាដ៏ពិសិដ្ឋ។

ٱذۡهَبۡ إِلَىٰ فِرۡعَوۡنَ إِنَّهُۥ طَغَىٰ ﴿١٧﴾

១៧-ចូរអ្នក(មូសា)ទៅកាន់ហ្វៀរអោនចុះ ពិតប្រាកដណាស់ គេជាអ្នកបំពាន។

فَقُلۡ هَل لَّكَ إِلَىٰٓ أَن تَزَكَّىٰ ﴿١٨﴾

១៨-ចូរអ្នកនិយាយ(ទៅកាន់ហ្វៀរអោន)ថា: តើអ្នកចង់មានភាពជ្រះស្អាតដែរឬទេ?

وَأَهۡدِيَكَ إِلَىٰ رَبِّكَ فَتَخۡشَىٰ ﴿١٩﴾

១៩-ហើយចង់ឱ្យខ្ញុំណែនាំអ្នកទៅកាន់ម្ចាស់របស់អ្នក (អល់ឡោះ) រួចអ្នកនឹងកោតខ្លាចទ្រង់ដែរឬទេ?

فَأَرَىٰهُ ٱلۡأٓيَةَ ٱلۡكُبۡرَىٰ ﴿٢٠﴾

២០-ពេលនោះ មូសាបានបង្ហាញឱ្យហ្វៀរអោនឃើញនូវមុជីហ្សាត់មួយដ៏ធំ។

فَكَذَّبَ وَعَصَىٰ ﴿٢١﴾

២១-តែគេបែរជាបានបដិសេធ និងបានប្រឆាំងទៅវិញ។

ثُمَّ أَدۡبَرَ يَسۡعَىٰ ﴿٢٢﴾

២២-បន្ទាប់មក គេបានបែរខ្នងដោយព្យាយាមរកល្បិចកលប្រឆាំងនឹងមូសា។

فَحَشَرَ فَنَادَىٰ ﴿٢٣﴾

២៣-រួចគេបានប្រមូល(ប្រជារាស្ត្ររបស់គេ) ហើយគេបានស្រែកប្រកាស។

فَقَالَ أَنَا۠ رَبُّكُمُ ٱلۡأَعۡلَىٰ ﴿٢٤﴾

២៤-និងបាននិយាយថា: យើងគឺជាម្ចាស់ដ៏ខ្ពង់ខ្ពស់របស់ពួកអ្នក។

فَأَخَذَهُ ٱللَّهُ نَكَالَ ٱلۡأٓخِرَةِ وَٱلۡأُولَىٰٓ ﴿٢٥﴾

២៥-ដូច្នេះ អល់ឡោះបានដាក់ទណ្ឌកម្មគេទាំងនៅក្នុងលោកិយ និងបរលោក។

إِنَّ فِي ذَٰلِكَ لَعِبۡرَةً لِّمَن يَخۡشَىٰٓ ﴿٢٦﴾

២៦-ពិតប្រាកដណាស់ នៅក្នុងរឿងនោះគឺជាមេរៀនមួយសម្រាប់អ្នកណាដែលកោតខ្លាចអល់ឡោះ។

ءَأَنتُمۡ أَشَدُّ خَلۡقًا أَمِ ٱلسَّمَآءُۚ بَنَىٰهَا ﴿٢٧﴾

២៧-តើការបង្កើតពួកអ្នក(ឱ្យរស់ឡើងវិញសាជាថ្មី)លំបាក ឬក៏មេឃដែលយើងបានបង្កើតវារួចលំបាកជាង?

رَفَعَ سَمۡكَهَا فَسَوَّىٰهَا ﴿٢٨﴾

២៨-ទ្រង់បានលើកទ្រង់ទ្រាយរបស់វាឱ្យខ្ពស់ និងបានធ្វើឱ្យវា

រាបស្មើ។

٢٩ وَأَغْطَشَ لَيْلَهَا وَأَخْرَجَ ضُحَىٰهَا

២៩-ហើយទ្រង់បានធ្វើឱ្យរាត្រីកាលរបស់វាងងឹត ហើយទ្រង់ក៏បានបញ្ចេញពន្លឺរបស់វាមកវិញដែរនៅពេលថ្ងៃ។

٣٠ وَٱلْأَرْضَ بَعْدَ ذَٰلِكَ دَحَىٰهَآ

៣០-ក្រោយពីនោះមក ទ្រង់បានធ្វើឱ្យផែនដីរាបស្មើ។

٣١ أَخْرَجَ مِنْهَا مَآءَهَا وَمَرْعَىٰهَا

៣១-ទ្រង់បានបញ្ចេញពីដីនូវទឹករបស់វា និងរុក្ខជាតិរបស់វា។

٣٢ وَٱلْجِبَالَ أَرْسَىٰهَا

៣២-ហើយទ្រង់បានបង្កើតភ្នំជាស្នឹងដ៏រឹងមាំ

٣٣ مَتَٰعًا لَّكُمْ وَلِأَنْعَٰمِكُمْ

៣៣-ដើម្បីជាផលប្រយោជន៍សម្រាប់ពួកអ្នក និងសត្វពាហនៈរបស់ពួកអ្នក។

٣٤ فَإِذَا جَآءَتِ ٱلطَّآمَّةُ ٱلْكُبْرَىٰ

៣៤-តែនៅពេលដែលគ្រោះមហន្តរាយដ៏ធំបានមកដល់(ថ្ងៃបរលោក)។

٣٥ يَوْمَ يَتَذَكَّرُ ٱلْإِنسَٰنُ مَا سَعَىٰ

៣៥-ថ្ងៃនោះមនុស្សលោកនឹងនឹកឃើញនូវអ្វីដែលខ្លួនបានសាងកន្លងមក។

٣٦ وَبُرِّزَتِ ٱلْجَحِيمُ لِمَن يَرَىٰ

៣៦-ហើយភ្លើងនរកជើហ៊ីមនឹងត្រូវបានគេបង្ហាញឱ្យឃើញយ៉ាងច្បាស់ចំពោះអ្នកណាដែលមើលឃើញ។

٣٧ فَأَمَّا مَن طَغَىٰ

៣៧-ចំណែកឯអ្នកណាដែលបានបំពាន

٣٨ وَءَاثَرَ ٱلْحَيَوٰةَ ٱلدُّنْيَا

៣៨-និងស្រឡាញ់ចូលចិត្តការរស់នៅក្នុងលោកិយ(ជាងថ្ងៃបរលោក)នោះ

٣٩ فَإِنَّ ٱلْجَحِيمَ هِىَ ٱلْمَأْوَىٰ

៣៩-ពិតប្រាកដណាស់ នរកជើហ៊ីមគឺជាទីលំនៅរបស់គេ។

٤٠ وَأَمَّا مَنْ خَافَ مَقَامَ رَبِّهِۦ وَنَهَى ٱلنَّفْسَ عَنِ ٱلْهَوَىٰ

៤០-រីឯអ្នកណាដែលកោតខ្លាចការឈរនៅចំពោះមុខម្ចាស់របស់គេ និងបានហាមឃាត់ខ្លួនពីការភ្លើតភ្លើននោះ

٤١ فَإِنَّ ٱلْجَنَّةَ هِىَ ٱلْمَأْوَىٰ

៤១-ពិតប្រាកដណាស់ ឋានសួគ៌គឺជាទីលំនៅរបស់គេ។

٤٢ يَسْـَٔلُونَكَ عَنِ ٱلسَّاعَةِ أَيَّانَ مُرْسَىٰهَا

៤២-ពួកគេ(ពួកមូស្ហរីគីន)នឹងសួរអ្នក(មូហាំម៉ាត់)អំពីថ្ងៃបរលោកថាៈ តើវានឹងកើតឡើងនៅពេលណា?

٤٣ فِيمَ أَنتَ مِن ذِكْرَىٰهَآ

៤៣-អ្នកមិនមែនជាអ្នកដឹងអំពីពេលវេលារបស់វាឡើយ។

إِلَىٰ رَبِّكَ مُنتَهَىٰهَآ ﴿٤٤﴾

៤៤-ទីបញ្ចប់របស់វា គឺមានតែម្ចាស់របស់អ្នកទេដែលដឹង ។

إِنَّمَآ أَنتَ مُنذِرُ مَن يَخۡشَىٰهَا ﴿٤٥﴾

៤៥-តាមពិតអ្នកគ្រាន់តែជាអ្នកដាស់តឿនព្រមានចំពោះអ្នកណាដែលខ្លាចវាប៉ុណ្ណោះ ។

كَأَنَّهُمۡ يَوۡمَ يَرَوۡنَهَا لَمۡ يَلۡبَثُوٓاْ إِلَّا عَشِيَّةً أَوۡ ضُحَىٰهَا ﴿٤٦﴾

៤៦-នៅថ្ងៃដែលពួកគេឃើញវា(ថ្ងៃបរលោក) ពួកគេមានអារម្មណ៍ហាក់បីដូចជាមិនបានរស់នៅក្នុងលោកិយនេះឡើយ លើកលែងតែមួយល្ងាច ឬមួយព្រឹកប៉ុណ្ណោះ ។

## سورة عبس

## ជំពូកអាប្តាសា

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

عَبَسَ وَتَوَلَّىٰٓ ﴿١﴾

១-គាត់(មូហាំម៉ាត់) បានធ្វើមុខក្រញូវ ហើយងាកមុខចេញ

أَن جَآءَهُ ٱلۡأَعۡمَىٰ ﴿٢﴾

២-ពីព្រោះមានជនពិការភ្នែកម្នាក់បានចូលមកជួបគាត់ ។

وَمَا يُدۡرِيكَ لَعَلَّهُۥ يَزَّكَّىٰٓ ﴿٣﴾

៣-តើអ្នក(មូហាំម៉ាត់) អាចដឹងយ៉ាងដូចម្ដេចបាន? ជួនកាលគេអាចមកសំអាតខ្លួន ។

أَوۡ يَذَّكَّرُ فَتَنفَعَهُ ٱلذِّكۡرَىٰٓ ﴿٤﴾

៤-ឬក៏គេចង់បានការក្រើនរំលឹក ហើយការក្រើនរំលឹកនោះអាចផ្ដល់ផលប្រយោជន៍ដល់គេ ។

أَمَّا مَنِ ٱسۡتَغۡنَىٰ ﴿٥﴾

៥-រីឯអ្នកដែលមានទ្រព្យសម្បត្តិគ្រប់គ្រាន់ (មិនត្រូវការការចង្អុលបង្ហាញពីអ្នក)

فَأَنتَ لَهُۥ تَصَدَّىٰ ﴿٦﴾

៦-អ្នកបែរជាយកចិត្តទុកដាក់ចំពោះគេទៅវិញ ។

وَمَا عَلَيۡكَ أَلَّا يَزَّكَّىٰ ﴿٧﴾

៧-ហើយមានបញ្ហាអ្វីចំពោះអ្នក(មូហាំម៉ាត់) ប្រសិនបើគេមិនសំអាតខ្លួន(ពីភាពគ្មានជំនឿ)នោះ?

وَأَمَّا مَن جَآءَكَ يَسۡعَىٰ ﴿٨﴾

៨-ចំណែកឯអ្នកដែលបានមកជួបអ្នកដើម្បីសុំការចង្អុលបង្ហាញផ្លូវល្អ

وَهُوَ يَخۡشَىٰ ﴿٩﴾

៩-ហើយគេកោតខ្លាចអល់ឡោះនោះ

فَأَنتَ عَنۡهُ تَلَهَّىٰ ﴿١٠﴾

១០-អ្នកបែរជាព្រងើយកន្តើយចំពោះគេទៅវិញ ។

كَلَّآ إِنَّهَا تَذۡكِرَةٞ ﴿١١﴾

១១-ចូរអ្នកកុំធ្វើបែបនេះ ។ ពិតប្រាកដណាស់ វា(អាយ៉ាត់

ទាំងនេះ) គឺជាការក្រើនរំលឹក។

فَمَن شَآءَ ذَكَرَهُۥ ﴿١٢﴾

១២-ដូច្នេះ អ្នកណាហើយមានបំណង គេពិតជានឹងយកវា (គម្ពីរគួរអាន) ធ្វើជាមេរៀន។

فِى صُحُفٍ مُّكَرَّمَةٍ ﴿١٣﴾

១៣-ដែលមាននៅក្នុងគម្ពីរដែលត្រូវបានគេលើកតម្កើង។

مَّرْفُوعَةٍ مُّطَهَّرَةٍۭ ﴿١٤﴾

១៤-ប្រកបដោយភាពខ្ពង់ខ្ពស់ ព្រមទាំងជ្រះស្អាត។

بِأَيْدِى سَفَرَةٍ ﴿١٥﴾

១៥-ដែលនៅនឹងដៃអ្នកដែលសរសេរសារ (ម៉ាឡាអ៊ីកាត់)

كِرَامٍۭ بَرَرَةٍ ﴿١٦﴾

១៦-ដ៏ល្អប្រពៃ និងជាអ្នកប្រតិបត្តិតាមអល់ឡោះយ៉ាងខ្ជាប់ខ្ជួន។

قُتِلَ ٱلْإِنسَٰنُ مَآ أَكْفَرَهُۥ ﴿١٧﴾

១៧- មនុស្សលោកត្រូវបានគេដាក់បណ្ដាសា។ ម៉េចក៏គេប្រឆាំងម្ល៉េះ!

مِنْ أَىِّ شَىْءٍ خَلَقَهُۥ ﴿١٨﴾

១៨-តើទ្រង់បានបង្កើតគេ (អ្នកប្រឆាំង) អំពីអ្វី?

مِن نُّطْفَةٍ خَلَقَهُۥ فَقَدَّرَهُۥ ﴿١٩﴾

១៩-ទ្រង់បានបង្កើតគេអំពីទឹកកាម រួចទ្រង់បានកំណត់ឱ្យគេរួចជាស្រេច ( ថ្ងៃស្លាប់ លាភសក្ការៈ វាសនា...)។

ثُمَّ ٱلسَّبِيلَ يَسَّرَهُۥ ﴿٢٠﴾

២០-បន្ទាប់មកទ្រង់បានសម្រួលផ្លូវ (ការចេញពីផ្ទៃម្ដាយ) ដល់គេ។

ثُمَّ أَمَاتَهُۥ فَأَقْبَرَهُۥ ﴿٢١﴾

២១-ក្រោយមក ទ្រង់ធ្វើឱ្យគេស្លាប់ រួចដាក់គេនៅក្នុងផ្នូរ។

ثُمَّ إِذَا شَآءَ أَنشَرَهُۥ ﴿٢٢﴾

២២-ក្រោយមកទៀត នៅពេលដែលទ្រង់មានចេតនា ទ្រង់នឹងធ្វើឱ្យគេរស់ឡើងវិញ។

كَلَّا لَمَّا يَقْضِ مَآ أَمَرَهُۥ ﴿٢٣﴾

២៣-ទេ! គេមិនអនុវត្តតាមអ្វីដែលទ្រង់បានបញ្ជាគេឡើយ។

فَلْيَنظُرِ ٱلْإِنسَٰنُ إِلَىٰ طَعَامِهِۦٓ ﴿٢٤﴾

២៤-ដូច្នេះ ចូរឱ្យមនុស្សលោកមើលទៅកាន់ចំណីអាហាររបស់គេចុះ។

أَنَّا صَبَبْنَا ٱلْمَآءَ صَبًّا ﴿٢٥﴾

២៥-ពិតប្រាកដណាស់ យើងបានបញ្ចុះទឹកភ្លៀងមកយ៉ាងច្រើន។

ثُمَّ شَقَقْنَا ٱلْأَرْضَ شَقًّا ﴿٢٦﴾

២៦-បន្ទាប់មកយើងបានបំបែកដីជាបំណែកៗ។

| | |
|---|---|
| ២៧-រួចយើងបានបណ្តុះធញ្ញជាតិគ្រប់ប្រភេទនៅលើវា។ | فَأَنۢبَتۡنَا فِيهَا حَبّٗا ﴿٢٧﴾ |
| ២៨-និងដើមទំពាំងបាយជូរ និងបន្លែ។ | وَعِنَبٗا وَقَضۡبٗا ﴿٢٨﴾ |
| ២៩-និងដើមអូលីវ និងដើមល្មើ។ | وَزَيۡتُونٗا وَنَخۡلٗا ﴿٢٩﴾ |
| ៣០-និងសួនឧទ្យានដែលមានដើមឈើធំៗជាច្រើន។ | وَحَدَآئِقَ غُلۡبٗا ﴿٣٠﴾ |
| ៣១-និងផលានុផល ហើយនិងរុក្ខជាតិសម្រាប់សត្វពាហនៈ | وَفَٰكِهَةٗ وَأَبّٗا ﴿٣١﴾ |
| ៣២-ជាផលប្រយោជន៍សម្រាប់ពួកអ្នកនិងសត្វពាហនៈរបស់ពួកអ្នក។ | مَّتَٰعٗا لَّكُمۡ وَلِأَنۡعَٰمِكُمۡ ﴿٣٢﴾ |
| ៣៣-ហើយនៅពេលដែលសម្រែក( ការផ្លុំត្រែលើកទីពីរ) យ៉ាងខ្លាំងបានមកដល់។ | فَإِذَا جَآءَتِ ٱلصَّآخَّةُ ﴿٣٣﴾ |
| ៣៤-នៅថ្ងៃដែលមនុស្សរត់គេចចេញពីបងប្អូនរបស់គេ។ | يَوۡمَ يَفِرُّ ٱلۡمَرۡءُ مِنۡ أَخِيهِ ﴿٣٤﴾ |
| ៣៥-និងម្តាយរបស់គេ និងឪពុករបស់គេ។ | وَأُمِّهِۦ وَأَبِيهِ ﴿٣٥﴾ |
| ៣៦-និងប្រពន្ធរបស់គេ និងកូនចៅរបស់គេ។ | وَصَٰحِبَتِهِۦ وَبَنِيهِ ﴿٣٦﴾ |
| ៣៧-ចំពោះបុគ្គលម្នាក់ៗក្នុងចំណោមពួកគេនៅថ្ងៃនោះ គឺគិតតែពីខ្លួនឯងប៉ុណ្ណោះ។ | لِكُلِّ ٱمۡرِيٕٖ مِّنۡهُمۡ يَوۡمَئِذٖ شَأۡنٞ يُغۡنِيهِ ﴿٣٧﴾ |
| ៣៨-ទឹកមុខ( របស់អ្នកមានជំនឿ) នៅថ្ងៃនោះគឺមានពន្លឺ។ | وُجُوهٞ يَوۡمَئِذٖ مُّسۡفِرَةٞ ﴿٣٨﴾ |
| ៣៩-សើចសប្បាយរីករាយ( ចំពោះដំណឹងល្អស្តីពីឋានសួគ៌) ។ | ضَاحِكَةٞ مُّسۡتَبۡشِرَةٞ ﴿٣٩﴾ |
| ៤០-ហើយទឹកមុខ( របស់អ្នកគ្មានជំនឿ) នៅថ្ងៃនោះ គឺប្រឡាក់ធូលី។ | وَوُجُوهٞ يَوۡمَئِذٍ عَلَيۡهَا غَبَرَةٞ ﴿٤٠﴾ |
| ៤១-ភាពខ្មៅងងឹតគ្របដណ្តប់ផ្ទៃមុខ( របស់ពួកគេ) ។ | تَرۡهَقُهَا قَتَرَةٌ ﴿٤١﴾ |
| ៤២-ពួកទាំងនោះហើយ គឺជាពួកគ្មានជំនឿដែលប្រព្រឹត្តអំពើអាក្រក់បំផុត។ | أُوْلَٰٓئِكَ هُمُ ٱلۡكَفَرَةُ ٱلۡفَجَرَةُ ﴿٤٢﴾ |

## ជំពូកអាត់តឹកវៀរ

## سورة التكوير

| | |
|---|---|
| ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។ | بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ |

إِذَا ٱلشَّمۡسُ كُوِّرَتۡ ﴿١﴾

១-នៅពេលដែលព្រះអាទិត្យត្រូវបានគេធ្វើឱ្យបាត់រស្មី។

وَإِذَا ٱلنُّجُومُ ٱنكَدَرَتۡ ﴿٢﴾

២-និងនៅពេលដែលហ្វូងផ្កាយបានធ្លាក់បាក់បែក។

وَإِذَا ٱلۡجِبَالُ سُيِّرَتۡ ﴿٣﴾

៣-និងនៅពេលដែលភ្នំត្រូវបានគេធ្វើឱ្យរសាត់ដូចធូលី។

وَإِذَا ٱلۡعِشَارُ عُطِّلَتۡ ﴿٤﴾

៤-និងនៅពេលដែលសត្វអូដ្ឋមានផ្ទៃពោះត្រូវបានគេបោះបង់ចោល។

وَإِذَا ٱلۡوُحُوشُ حُشِرَتۡ ﴿٥﴾

៥-និងនៅពេលដែលសត្វសាហាវត្រូវបានគេប្រមូលផ្តុំ។

وَإِذَا ٱلۡبِحَارُ سُجِّرَتۡ ﴿٦﴾

៦-និងនៅពេលដែលទឹកសមុទ្រត្រូវបានគេធ្វើឱ្យឆេះជាអណ្តាតភ្លើង។

وَإِذَا ٱلنُّفُوسُ زُوِّجَتۡ ﴿٧﴾

៧-និងនៅពេលដែលព្រលឹងត្រូវបានគេបញ្ចូលទៅក្នុងខ្លួនរបស់គេវិញ។

وَإِذَا ٱلۡمَوۡءُۥدَةُ سُئِلَتۡ ﴿٨﴾

៨-និងនៅពេលទារិកាដែលគេបានកប់ទាំងរស់ត្រូវបានគេសួរថា:

بِأَيِّ ذَنۢبٖ قُتِلَتۡ ﴿٩﴾

៩-ដោយសារបាបកម្មអ្វីបានជានាងត្រូវបានគេសម្លាប់?

وَإِذَا ٱلصُّحُفُ نُشِرَتۡ ﴿١٠﴾

១០-និងនៅពេលដែលសៀវភៅកំណត់ហេតុ(អំពើល្អ និងអំពើអាក្រក់)ត្រូវបានគេលាតត្រដាង។

وَإِذَا ٱلسَّمَآءُ كُشِطَتۡ ﴿١١﴾

១១-និងនៅពេលដែលមេឃត្រូវបានគេយកចេញពីកន្លែងរបស់វា។

وَإِذَا ٱلۡجَحِيمُ سُعِّرَتۡ ﴿١٢﴾

១២-និងនៅពេលដែលភ្លើងនរកជើហ៊ីមត្រូវបានគេធ្វើឱ្យឆេះយ៉ាងសន្ធោសន្ធៅ។

وَإِذَا ٱلۡجَنَّةُ أُزۡلِفَتۡ ﴿١٣﴾

១៣-និងនៅពេលដែលឋានសួគ៌ត្រូវបានគេដាក់ឱ្យនៅជិត(អ្នកដែលកោតខ្លាចអល់ឡោះ) ។

عَلِمَتۡ نَفۡسٞ مَّآ أَحۡضَرَتۡ ﴿١٤﴾

១៤-(ពេលនោះ)បុគ្គលគ្រប់រូបនឹងដឹងអំពីអ្វីដែលគេបានប្រព្រឹត្តកន្លងមក។

فَلَآ أُقۡسِمُ بِٱلۡخُنَّسِ ﴿١٥﴾

១៥-ជាការពិតណាស់ យើងស្បថនឹងហ្វូងផ្កាយដែលលិចបាត់។

ٱلْجَوَارِ ٱلْكُنَّسِ ١٦

១៦-និងហ្វូងផ្កាយដែលដើរតាមគន្លងរបស់វាយ៉ាងលឿន រួចក៏លិចបាត់ ។

وَٱلَّيْلِ إِذَا عَسْعَسَ ١٧

១៧-និងពេលយប់ នៅពេលដែលវាមកដល់ទីបញ្ចប់ ។

وَٱلصُّبْحِ إِذَا تَنَفَّسَ ١٨

១៨-និងពេលព្រលឹម នៅពេលដែលវាបញ្ចេញពន្លឺ ។

إِنَّهُۥ لَقَوْلُ رَسُولٍ كَرِيمٍ ١٩

១៩-ពិតប្រាកដណាស់ គម្ពីរគួរអានគឺនាំមកតាមរយៈពាក្យសំដីរបស់អ្នកនាំសារ(ជីព្រីល)ដ៏ថ្កុំថ្កើង

ذِى قُوَّةٍ عِندَ ذِى ٱلْعَرْشِ مَكِينٍ ٢٠

២០-ដែលមានអានុភាពខ្លាំងក្លា(ក្នុងការទទួលខុសត្រូវលើការងារ) និងមានឋានៈខ្ពង់ខ្ពស់ចំពោះម្ចាស់នៃអារ៉ស្ហ

مُّطَاعٍ ثَمَّ أَمِينٍ ٢١

២១-ដែលជាអ្នកត្រូវគេគោរពតាមនៅទីនោះ និងជាអ្នកស្មោះត្រង់ ។

وَمَا صَاحِبُكُم بِمَجْنُونٍ ٢٢

២២-ហើយមិត្តរបស់ពួកអ្នក(មូហាំម៉ាត់)មិនមែនជាមនុស្សវិកលចរិតឡើយ ។

وَلَقَدْ رَءَاهُ بِٱلْأُفُقِ ٱلْمُبِينِ ٢٣

២៣-ហើយជាការពិតណាស់ គាត់(មូហាំម៉ាត់)បានឃើញគេ(ជីព្រីល)យ៉ាងច្បាស់នៅឯជើងមេឃ ។

وَمَا هُوَ عَلَى ٱلْغَيْبِ بِضَنِينٍ ٢٤

២៤-ហើយគេ(មូហាំម៉ាត់)មិនកំណាញ់លើការផ្សព្វផ្សាយប្រការអាថិកំបាំង(សាររបស់អល់ឡោះ)ឡើយ ។

وَمَا هُوَ بِقَوْلِ شَيْطَٰنٍ رَّجِيمٍ ٢٥

២៥-ហើយគម្ពីរគួរអានក៏មិនមែនជាពាក្យសំដីរបស់ស្ហៃតនដែលត្រូវគេដាក់បណ្តាសាដែរ ។

فَأَيْنَ تَذْهَبُونَ ٢٦

២៦-ហេតុនេះ តើសតិរបស់ពួកដែលបដិសេធនឹងគម្ពីរគួរអានទៅណាអស់ហើយ?

إِنْ هُوَ إِلَّا ذِكْرٌ لِّلْعَٰلَمِينَ ٢٧

២៧-វា(គម្ពីរគួរអាន) គ្មានអ្វីក្រៅពីការរំលឹកដល់ពិភពទាំងអស់នោះឡើយ ។

لِمَن شَآءَ مِنكُمْ أَن يَسْتَقِيمَ ٢٨

២៨-សម្រាប់អ្នកណាដែលមានបំណងចង់ដើរលើមាគ៌ាដ៏ត្រឹមត្រូវក្នុងចំណោមពួកអ្នក ។

وَمَا تَشَآءُونَ إِلَّآ أَن يَشَآءَ ٱللَّهُ رَبُّ

២៩-ហើយពួកអ្នកមិនអាចមានបំណងធ្វើអ្វីមួយបានឡើយលើកលែងតែអល់ឡោះដែលជាម្ចាស់គ្រប់គ្រងពិភពទាំងអស់

مانចេតនាប៉ុណ្ណោះ។

ٱلۡعَٰلَمِينَ ﴿٢٩﴾

## ជំពូកអាល់អ៊ីមហ្វិតរ័

سورة الانفطار

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-នៅពេលដែលមេឃបានប្រេះបែក។

إِذَا ٱلسَّمَآءُ ٱنفَطَرَتۡ ﴿١﴾

២-និងនៅពេលដែលភពទាំងឡាយបានបាក់ធ្លាក់ខ្ចាត់ខ្ចាយ។

وَإِذَا ٱلۡكَوَاكِبُ ٱنتَثَرَتۡ ﴿٢﴾

៣-និងនៅពេលដែលទឹកសមុទ្រត្រូវបានគេបំផ្ទុះឡើង ។

وَإِذَا ٱلۡبِحَارُ فُجِّرَتۡ ﴿٣﴾

៤-និងនៅពេលដែលផ្នូរទាំងឡាយត្រូវបានគេបំផុសឡើង។

وَإِذَا ٱلۡقُبُورُ بُعۡثِرَتۡ ﴿٤﴾

៥-មនុស្សម្នាក់ៗនឹងបានដឹងនូវអ្វីដែលខ្លួនបានសាងកន្លងមក និងអ្វីដែលខ្លួនមិនទាន់សាង។

عَلِمَتۡ نَفۡسٞ مَّا قَدَّمَتۡ وَأَخَّرَتۡ ﴿٥﴾

៦-ឱមនុស្សលោក! តើអ្វីទៅដែលបានបោកប្រាស់អ្នកឱ្យធ្វើស្ពឹកចំពោះម្ចាស់របស់អ្នកដ៏ថ្កុំថ្កើង

يَٰٓأَيُّهَا ٱلۡإِنسَٰنُ مَا غَرَّكَ بِرَبِّكَ ٱلۡكَرِيمِ ﴿٦﴾

៧-ដែលបានបង្កើតអ្នក រួចធ្វើឱ្យអ្នកមានរូបរាងពេញលេញ ព្រមទាំងផ្តល់ឱ្យអ្នកនូវលក្ខណៈល្អសមរម្យ

ٱلَّذِي خَلَقَكَ فَسَوَّىٰكَ فَعَدَلَكَ ﴿٧﴾

៨-ក្នុងរូបរាងណាមួយដែលទ្រង់មានចេតនា ទ្រង់នឹងបង្កើតអ្នកនោះ?

فِيٓ أَيِّ صُورَةٖ مَّا شَآءَ رَكَّبَكَ ﴿٨﴾

៩-មិនដូច្នោះទេ! ផ្ទុយទៅវិញពួកអ្នកបែរជាបដិសេធនឹងថ្ងៃជំនុំជំរះ(ថ្ងៃបរលោក)ទៅវិញ។

كَلَّا بَلۡ تُكَذِّبُونَ بِٱلدِّينِ ﴿٩﴾

១០-ហើយពិតប្រាកដណាស់ ពួកអ្នកគឺមានអ្នកតាមឃ្លាំមើល (ម៉ាឡាអ៊ីកាត់)។

وَإِنَّ عَلَيۡكُمۡ لَحَٰفِظِينَ ﴿١٠﴾

១១-ជាអ្នកថ្កុំថ្កើង និងជាអ្នកកត់ត្រា(រាល់អំពើរបស់អ្នក)។

كِرَامٗا كَٰتِبِينَ ﴿١١﴾

១២-ពួកគេ(ម៉ាឡាអ៊ីកាត់)ដឹងនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។

يَعۡلَمُونَ مَا تَفۡعَلُونَ ﴿١٢﴾

១៣-ពិតប្រាកដណាស់ បណ្តាអ្នកដែលបានសាងអំពើល្អគឺស្ថិតក្នុងឋានសួគ៌ណាអ៊ីម។

إِنَّ ٱلۡأَبۡرَارَ لَفِي نَعِيمٖ ﴿١٣﴾

១៤-ហើយពិតប្រាកដណាស់ ពួកដែលប្រព្រឹត្តអំពើអាក្រក់ គឺស្ថិតក្នុងនរកជើហ៊ីម ។

១៥-ពួកគេនឹងចូលទៅក្នុងឋាននរកនោះនៅថ្ងៃជំនុំជំរះ( ថ្ងៃបរលោក) ។

១៦-ហើយពួកគេមិនអាចគេចវេះពីវាបានឡើយ ។

១៧-តើអ្វីដែលធ្វើឱ្យអ្នកដឹងថា ថ្ងៃជំនុំជំរះជាអ្វីនោះ?

១៨-បន្ទាប់មក តើអ្វីដែលធ្វើឱ្យអ្នកដឹងថា ថ្ងៃជំនុំជំរះជាអ្វីនោះ ?

១៩-គឺជាថ្ងៃដែលគ្មានបុគ្គលណាម្នាក់អាចមានអំណាចអ្វីជួយដល់បុគ្គលម្នាក់ទៀតបានឡើយ ។ ហើយសេចក្តីសម្រេចនៅថ្ងៃនោះគឺជាកម្មសិទ្ធិរបស់អល់ឡោះតែមួយគត់ ។

## ជំពូកអាល់មូតហ្វហ្វីហ្វីន

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-ភាពវិនាសអន្តរាយគឺសម្រាប់ពួកដែលតែបន្លំ ។

២-ជាពួកដែលទាមទារចង់បានគ្រប់ចំនួននៅពេលដែលពួកគេថ្លឹងវាស់ ឬវាល់ពីអ្នកដទៃ ។

៣-តែនៅពេលដែលពួកគេវាស់ឬវាល់ ឬថ្លឹងឱ្យអ្នកដទៃ គឺពួកគេធ្វើឱ្យខ្វះ ។

៤-តើពួកទាំងនោះមិនគិតថា: ពិតប្រាកដណាស់ ពួកគេនឹងត្រូវគេធ្វើឱ្យរស់ឡើងវិញ

៥-នៅថ្ងៃមួយដ៏ធំធេង( ថ្ងៃបរលោក) ទេឬ ?

៦-គឺនៅថ្ងៃដែលមនុស្សលោកនឹងឈរនៅចំពោះមុខម្ចាស់គ្រប់គ្រងពិភពទាំងអស់ ។

៧-មិនដូច្នោះទេ! ការពិតបញ្ជីរបស់ពួកប្រព្រឹត្តអំពើអាក្រក់

وَإِنَّ ٱلۡفُجَّارَ لَفِي جَحِيمٖ ﴿١٤﴾

يَصۡلَوۡنَهَا يَوۡمَ ٱلدِّينِ ﴿١٥﴾

وَمَا هُمۡ عَنۡهَا بِغَآئِبِينَ ﴿١٦﴾

وَمَآ أَدۡرَىٰكَ مَا يَوۡمُ ٱلدِّينِ ﴿١٧﴾

ثُمَّ مَآ أَدۡرَىٰكَ مَا يَوۡمُ ٱلدِّينِ ﴿١٨﴾

يَوۡمَ لَا تَمۡلِكُ نَفۡسٞ لِّنَفۡسٖ شَيۡـٔٗاۖ وَٱلۡأَمۡرُ يَوۡمَئِذٖ لِّلَّهِ ﴿١٩﴾

## سورة المطففين

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

وَيۡلٞ لِّلۡمُطَفِّفِينَ ﴿١﴾

ٱلَّذِينَ إِذَا ٱكۡتَالُواْ عَلَى ٱلنَّاسِ يَسۡتَوۡفُونَ ﴿٢﴾

وَإِذَا كَالُوهُمۡ أَو وَّزَنُوهُمۡ يُخۡسِرُونَ ﴿٣﴾

أَلَا يَظُنُّ أُوْلَٰٓئِكَ أَنَّهُم مَّبۡعُوثُونَ ﴿٤﴾

لِيَوۡمٍ عَظِيمٖ ﴿٥﴾

يَوۡمَ يَقُومُ ٱلنَّاسُ لِرَبِّ ٱلۡعَٰلَمِينَ ﴿٦﴾

كَلَّآ إِنَّ كِتَٰبَ ٱلۡفُجَّارِ لَفِي سِجِّينٖ ﴿٧﴾

គឺស្ថិតក្នុងស៊ិជ្ជីន។

៨-តើអ្វីដែលធ្វើឱ្យអ្នកដឹងថា ស៊ិជ្ជីនជាអ្វីនោះ?

៩-គឺជាបញ្ជីមួយដែលត្រូវបានគេកត់ត្រាទុក។

១០-ភាពវិនាសអន្តរាយនៅថ្ងៃនោះគឺសម្រាប់ពួកដែលបដិសេធ។

១១-គឺជាពួកដែលបដិសេធនឹងថ្ងៃជំនុំជំរះ។

១២-ហើយគ្មានអ្នកណាម្នាក់អាចបដិសេធនឹងវាក្រៅពីពួកដែលបំពានប្រព្រឹត្តបាបកម្មនោះឡើយ។

១៣-នៅពេលមានគេសូត្រអាយ៉ាត់ៗរបស់យើងឱ្យគេស្តាប់ គេបែរជាបាននិយាយថាៈ នេះគឺជារឿងព្រេងនិទានទេវិញ។

១៤-ទេ! ផ្ទុយទៅវិញ អ្វី(បាបកម្ម)ដែលពួកគេប្រព្រឹត្តនោះបានគ្របដណ្តប់លើចិត្តរបស់ពួកគេ។

១៥-ទេ! ពិតប្រាកដណាស់ ពួកគេនឹងត្រូវគេបិទបាំងពីការមើលឃើញម្ចាស់របស់ពួកគេនៅថ្ងៃនោះ(ថ្ងៃបរលោក)។

១៦-ក្រោយមក ពួកគេពិតជានឹងត្រូវចូលនរកជើហ៊ីម។

១៧-ក្រោយមកទៀត មានគេនិយាយថាៈ នេះហើយគឺជាអ្វីដែលពួកអ្នកធ្លាប់បដិសេធនឹងវានោះ។

១៨-ទេ! ពិតប្រាកដណាស់ បញ្ជីរបស់បណ្តាអ្នកដែលសាងអំពើល្អ គឺស្ថិតក្នុងអ៊ិល្លីយូន។

១៩-តើអ្វីដែលធ្វើឱ្យអ្នកដឹងថា អ៊ិល្លីយូនជាអ្វីនោះ?

២០-គឺជាបញ្ជីមួយដែលត្រូវបានគេកត់ត្រាទុក។

២១-ដែលបណ្តាម៉ាឡាអ៊ីកាត់កំពុងតែធ្វើសាក្សីចំពោះបញ្ជីនោះ។

وَمَآ أَدۡرَىٰكَ مَا سِجِّينٞ ٨

كِتَٰبٞ مَّرۡقُومٞ ٩

وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ١٠

ٱلَّذِينَ يُكَذِّبُونَ بِيَوۡمِ ٱلدِّينِ ١١

وَمَا يُكَذِّبُ بِهِۦٓ إِلَّا كُلُّ مُعۡتَدٍ أَثِيمٍ ١٢

إِذَا تُتۡلَىٰ عَلَيۡهِ ءَايَٰتُنَا قَالَ أَسَٰطِيرُ ٱلۡأَوَّلِينَ ١٣

كَلَّاۖ بَلۡۜ رَانَ عَلَىٰ قُلُوبِهِم مَّا كَانُواْ يَكۡسِبُونَ ١٤

كَلَّآ إِنَّهُمۡ عَن رَّبِّهِمۡ يَوۡمَئِذٖ لَّمَحۡجُوبُونَ ١٥

ثُمَّ إِنَّهُمۡ لَصَالُواْ ٱلۡجَحِيمِ ١٦

ثُمَّ يُقَالُ هَٰذَا ٱلَّذِي كُنتُم بِهِۦ تُكَذِّبُونَ ١٧

كَلَّآ إِنَّ كِتَٰبَ ٱلۡأَبۡرَارِ لَفِي عِلِّيِّينَ ١٨

وَمَآ أَدۡرَىٰكَ مَا عِلِّيُّونَ ١٩

كِتَٰبٞ مَّرۡقُومٞ ٢٠

يَشۡهَدُهُ ٱلۡمُقَرَّبُونَ ٢١

إِنَّ ٱلۡأَبۡرَارَ لَفِي نَعِيمٍ ﴿٢٢﴾

២២-ពិតប្រាកដណាស់ បណ្តាអ្នកដែលសាងអំពើល្អ គឺស្ថិតនៅក្នុងឋានសួគ៌ណាអ៊ីម។

عَلَى ٱلۡأَرَآئِكِ يَنظُرُونَ ﴿٢٣﴾

២៣-ដោយពួកគេអង្គុយនៅលើគ្រែគយគន់(វត្ថុនានា)។

تَعۡرِفُ فِي وُجُوهِهِمۡ نَضۡرَةَ ٱلنَّعِيمِ ﴿٢٤﴾

២៤-អ្នកនឹងមើលឃើញភាពសប្បាយរីករាយនៅលើផ្ទៃមុខរបស់ពួកគេ។

يُسۡقَوۡنَ مِن رَّحِيقٖ مَّخۡتُومٍ ﴿٢٥﴾

២៥-ពួកគេនឹងត្រូវគេឱ្យទទួលទានសុរាដ៏បរិសុទ្ធដែលត្រូវបានបិទជិត។

خِتَٰمُهُۥ مِسۡكٞۚ وَفِي ذَٰلِكَ فَلۡيَتَنَافَسِ ٱلۡمُتَنَٰفِسُونَ ﴿٢٦﴾

២៦-ក្លិនរបស់វាក្រអូបបំផុត។ ហើយដើម្បីបានដូចនេះ ចូរឱ្យបណ្តាអ្នកដែលប្រកួតប្រជែង ប្រកួតប្រជែងគ្នាចុះ។

وَمِزَاجُهُۥ مِن تَسۡنِيمٍ ﴿٢٧﴾

២៧-ហើយការលាយរបស់វាគឺអំពីទឹកនៅក្នុងឋានសួគ៌។

عَيۡنٗا يَشۡرَبُ بِهَا ٱلۡمُقَرَّبُونَ ﴿٢٨﴾

២៨-គឺជាប្រភពទឹកដែលបណ្តាអ្នកមានឋានៈខ្ពង់ខ្ពស់ទទួលទានវា។

إِنَّ ٱلَّذِينَ أَجۡرَمُواْ كَانُواْ مِنَ ٱلَّذِينَ ءَامَنُواْ يَضۡحَكُونَ ﴿٢٩﴾

២៩-ពិតប្រាកដណាស់ ពួកដែលបានប្រព្រឹត្តអំពើអាក្រក់(នៅក្នុងលោកិយ) ពួកគេធ្លាប់សើចចំអកឱ្យបណ្តាអ្នកដែលមានជំនឿ។

وَإِذَا مَرُّواْ بِهِمۡ يَتَغَامَزُونَ ﴿٣٠﴾

៣០-ហើយនៅពេលដែលពួកគេបានដើរកាត់បណ្តាអ្នកដែលមានជំនឿ ពួកគេតែងតែសម្តែងការចំអកឡកឡឺយ។

وَإِذَا ٱنقَلَبُوٓاْ إِلَىٰٓ أَهۡلِهِمُ ٱنقَلَبُواْ فَكِهِينَ ﴿٣١﴾

៣១-ហើយនៅពេលដែលពួកគេត្រឡប់ទៅកាន់បក្សពួករបស់គេវិញ គឺពួកគេត្រឡប់ដោយការចំអកដាក់អ្នកមានជំនឿ។

وَإِذَا رَأَوۡهُمۡ قَالُوٓاْ إِنَّ هَٰٓؤُلَآءِ لَضَآلُّونَ ﴿٣٢﴾

៣២-ហើយនៅពេលដែលពួកគេបានឃើញបណ្តាអ្នកដែលមានជំនឿ ពួកគេនិយាយថា: ពិតប្រាកដណាស់ ពួកទាំងនេះជាពួកដែលវង្វេង។

وَمَآ أُرۡسِلُواْ عَلَيۡهِمۡ حَٰفِظِينَ ﴿٣٣﴾

៣៣-ហើយពួកគេ(ពួកគ្មានជំនឿ)មិនត្រូវបានគេចាត់តាំងជាអ្នកឃ្លាំមើលបណ្តាអ្នកដែលមានជំនឿឡើយ។

فَٱلۡيَوۡمَ ٱلَّذِينَ ءَامَنُواْ مِنَ ٱلۡكُفَّارِ يَضۡحَكُونَ ﴿٣٤﴾

៣៤-ដូច្នេះ នៅថ្ងៃនេះ(ថ្ងៃបរលោក) បណ្តាអ្នកដែលមានជំនឿសើចចំអកចំពោះពួកដែលគ្មានជំនឿវិញ។

عَلَى ٱلۡأَرَآئِكِ يَنظُرُونَ ﴿٣٥﴾

៣៥-ពួកគេអង្គុយនៅលើគ្រែគយគន់(វត្ថុនានា)។

هَلۡ ثُوِّبَ ٱلۡكُفَّارُ مَا كَانُواْ يَفۡعَلُونَ ﴿٣٦﴾

៣៦-តើពួកគ្មានជំនឿត្រូវបានគេតបស្នងនូវអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តដែរឬទេ?

## سورة الانشقاق

## ជំពូកអាល់អ៊ិនស្ហ៊ីកក

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

إِذَا ٱلسَّمَآءُ ٱنشَقَّتۡ ﴿١﴾

១-នៅពេលដែលមេឃត្រូវបានបែកបាក់។

وَأَذِنَتۡ لِرَبِّهَا وَحُقَّتۡ ﴿٢﴾

២-ហើយវាបានស្តាប់បង្គាប់ និងប្រតិបត្តិតាមម្ចាស់របស់វា។

وَإِذَا ٱلۡأَرۡضُ مُدَّتۡ ﴿٣﴾

៣-ហើយនៅពេលដែលផែនដីត្រូវបានលាតសន្ធឹង។

وَأَلۡقَتۡ مَا فِيهَا وَتَخَلَّتۡ ﴿٤﴾

៤-ហើយវាបានបញ្ចេញនូវអ្វីដែលមាននៅក្នុងខ្លួនរបស់វា ហើយធ្វើឱ្យទទេស្អាត។

وَأَذِنَتۡ لِرَبِّهَا وَحُقَّتۡ ﴿٥﴾

៥-ហើយវាបានស្តាប់បង្គាប់ និងប្រតិបត្តិតាមម្ចាស់របស់វា។

يَٰٓأَيُّهَا ٱلۡإِنسَٰنُ إِنَّكَ كَادِحٌ إِلَىٰ رَبِّكَ كَدۡحٗا فَمُلَٰقِيهِ ﴿٦﴾

៦-ឱមនុស្សលោក! ពិតប្រាកដណាស់ អ្នកគឺជាអ្នកដែលខំប្រឹងប្រែងសាងចំពោះម្ចាស់របស់អ្នក(ទោះជាអំពើល្អ ឬអាក្រក់) អ្នកនឹងជួបទ្រង់ជាមិនខាន(នៅថ្ងៃបរលោក)។

فَأَمَّا مَنۡ أُوتِيَ كِتَٰبَهُۥ بِيَمِينِهِۦ ﴿٧﴾

៧-ហើយចំណែកឯអ្នកដែលត្រូវបានគេប្រគល់សៀវភៅកំណត់ហេតុរបស់គេនៅដៃស្តាំ

فَسَوۡفَ يُحَاسَبُ حِسَابٗا يَسِيرٗا ﴿٨﴾

៨-គេនឹងត្រូវទទួលនូវការកាត់សេចក្តីយ៉ាងងាយស្រួលបំផុត។

وَيَنقَلِبُ إِلَىٰٓ أَهۡلِهِۦ مَسۡرُورٗا ﴿٩﴾

៩-ហើយគេនឹងត្រូវត្រឡប់ទៅកាន់គ្រួសាររបស់គេវិញដោយសេចក្តីរីករាយក្រៃលែង។

وَأَمَّا مَنۡ أُوتِيَ كِتَٰبَهُۥ وَرَآءَ ظَهۡرِهِۦ ﴿١٠﴾

១០-រីឯអ្នកដែលត្រូវបានគេប្រគល់នូវសៀវភៅរបស់គេនៅដៃឆ្វេងពីក្រោយខ្នងរបស់គេ

فَسَوۡفَ يَدۡعُواْ ثُبُورٗا ﴿١١﴾

១១-គេនឹងស្រែកដង្ហោយថាៈ វិនាសអន្តរាយហើយខ្ញុំ។

وَيَصۡلَىٰ سَعِيرًا ﴿١٢﴾

១២-ហើយគេនឹងចូលក្នុងភ្លើងនរកដែលឆេះយ៉ាងសន្ធោសន្ធៅ។

إِنَّهُۥ كَانَ فِيٓ أَهۡلِهِۦ مَسۡرُورًا ﴿١٣﴾

១៣-ពិតប្រាកដណាស់ គេធ្លាប់រស់នៅក្នុងលោកិយជាមួយនឹងក្រុមគ្រួសាររបស់គេយ៉ាងសប្បាយរីករាយ។

إِنَّهُۥ ظَنَّ أَن لَّن يَحُورَ ﴿١٤﴾

១៤-ពិតប្រាកដណាស់ គេបានគិតថា គេនឹងមិនត្រូវវិលត្រឡប់(ទៅកាន់អល់ឡោះ)វិញឡើយ។

بَلَىٰٓۚ إِنَّ رَبَّهُۥ كَانَ بِهِۦ بَصِيرًا ﴿١٥﴾

១៥-មិនដូច្នោះទេ! ពិតប្រាកដណាស់ ម្ចាស់របស់គេដឹងបំផុតចំពោះរូបគេ។

فَلَآ أُقۡسِمُ بِٱلشَّفَقِ ﴿١٦﴾

១៦-ដូច្នេះ យើងស្បថនឹងពេលថ្ងៃរៀបលិច។

وَٱلَّيۡلِ وَمَا وَسَقَ ﴿١٧﴾

១៧-និងពេលយប់ និងអ្វីដែលបានប្រមូលផ្តុំ។

وَٱلۡقَمَرِ إِذَا ٱتَّسَقَ ﴿١٨﴾

១៨-និងព្រះច័ន្ទនៅពេលដែលវាបានរះពេញវង់។

لَتَرۡكَبُنَّ طَبَقًا عَن طَبَقٖ ﴿١٩﴾

១៩-ពួកអ្នកនឹងវិវដ្តពីដំណាក់កាលមួយទៅដំណាក់កាលមួយ(នៅក្នុងលោកិយ)។

فَمَا لَهُمۡ لَا يُؤۡمِنُونَ ﴿٢٠﴾

២០-ដូច្នេះ តើមានរឿងអ្វីទៅបានជាពួកគេគ្មានជំនឿ?

وَإِذَا قُرِئَ عَلَيۡهِمُ ٱلۡقُرۡءَانُ لَا يَسۡجُدُونَ۩ ﴿٢١﴾

២១-ហើយនៅពេលដែលមានគេសូត្រគម្ពីរគួរអានឱ្យពួកគេស្តាប់ ពួកគេមិនស៊ូជូតឡើយ។

بَلِ ٱلَّذِينَ كَفَرُواْ يُكَذِّبُونَ ﴿٢٢﴾

២២-មិនតែប៉ុណ្ណោះ ពួកដែលគ្មានជំនឿថែមទាំងបដិសេធទៀតផង។

وَٱللَّهُ أَعۡلَمُ بِمَا يُوعُونَ ﴿٢٣﴾

២៣-ហើយអល់ឡោះដឹងបំផុតនូវអ្វីដែលពួកគេលាក់ទុកនៅក្នុងចិត្ត។

فَبَشِّرۡهُم بِعَذَابٍ أَلِيمٍ ﴿٢٤﴾

២៤-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)ប្រាប់ពួកគេអំពីទារុណកម្មដ៏សែនឈឺចាប់ចុះ។

إِلَّا ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ لَهُمۡ أَجۡرٌ غَيۡرُ مَمۡنُونِۭ ﴿٢٥﴾

២៥-លើកលែងតែបណ្តាអ្នកដែលមានជំនឿនិងបានសាងអំពើល្អត្រឹមត្រូវប៉ុណ្ណោះ។ ពួកគេនឹងទទួលបានផលបុណ្យដោយឥតគណនា។

## سورة البروج

## ជំពូកអាល់ពួរូជ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

១-អល់ឡោះស្បថនឹងមេឃដែលមានផ្កាយជាច្រើន ។

وَٱلسَّمَآءِ ذَاتِ ٱلْبُرُوجِ ﴿١﴾

២-និងថ្ងៃដែលបានសន្យា( ថ្ងៃបរលោក) ។

وَٱلْيَوْمِ ٱلْمَوْعُودِ ﴿٢﴾

៣-និងអ្នកដែលធ្វើសាក្សី ហើយនិងភស្តុតាងទាំងឡាយដែលគេយកមកបង្ហាញ ។

وَشَاهِدٍ وَمَشْهُودٍ ﴿٣﴾

៤-គេបានដាក់បណ្តាសាចំពោះក្រុមអូខឌូត( ជាពួកដែលជីករណ្តៅសម្លាប់អ្នកមានជំនឿ) ។

قُتِلَ أَصْحَٰبُ ٱلْأُخْدُودِ ﴿٤﴾

៥-ជារណ្តៅភ្លើងដែលមានកំណាត់អុស

ٱلنَّارِ ذَاتِ ٱلْوَقُودِ ﴿٥﴾

៦-ខណៈដែលពួកគេអង្គុយនៅជុំវិញរណ្តៅភ្លើងនោះ

إِذْ هُمْ عَلَيْهَا قُعُودٌ ﴿٦﴾

៧-ដោយពួកគេសម្លឹងមើលទៅលើអ្វីដែលពួកគេកំពុងប្រព្រឹត្តទៅលើបណ្តាអ្នកដែលមានជំនឿ ។

وَهُمْ عَلَىٰ مَا يَفْعَلُونَ بِٱلْمُؤْمِنِينَ شُهُودٌ ﴿٧﴾

៨-ហើយពួកគេបានធ្វើបាបបណ្តាអ្នកដែលមានជំនឿ គឺដោយសារតែពួកគេមានជំនឿលើអល់ឡោះដ៏មហាខ្លាំងពូកែ និងជាទីកោតសរសើរ ។

وَمَا نَقَمُوا۟ مِنْهُمْ إِلَّآ أَن يُؤْمِنُوا۟ بِٱللَّهِ ٱلْعَزِيزِ
ٱلْحَمِيدِ ﴿٨﴾

៩-គឺជាអ្នកដែលមានការគ្រប់គ្រងមេឃជាច្រើនជាន់ និងផែនដី ។ ហើយអល់ឡោះ គឺជាសាក្សីទៅលើអ្វីៗទាំងអស់ ។

ٱلَّذِى لَهُۥ مُلْكُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ ۚ
وَٱللَّهُ عَلَىٰ كُلِّ شَىْءٍ شَهِيدٌ ﴿٩﴾

១០-ពិតប្រាកដណាស់ ពួកដែលដុតបណ្តាអ្នកដែលមានជំនឿប្រុសស្រី បន្ទាប់មកពួកគេមិនបានសារភាពទោសកំហុស( ចំពោះអល់ឡោះ) ទេនោះ ពួកគេនឹងត្រូវទទួលទារុណកម្មនៅក្នុងនរកជើហាន់ណាំ និងទទួលទារុណកម្មដែលឆាបឆេះយ៉ាងឈឺចាប់បំផុត ។

إِنَّ ٱلَّذِينَ فَتَنُوا۟ ٱلْمُؤْمِنِينَ وَٱلْمُؤْمِنَٰتِ
ثُمَّ لَمْ يَتُوبُوا۟ فَلَهُمْ عَذَابُ جَهَنَّمَ وَلَهُمْ
عَذَابُ ٱلْحَرِيقِ ﴿١٠﴾

១១-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវនោះ ពួកគេនឹងទទួលបានឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា ។ នោះគឺជាជោគជ័យដ៏ធំធេង ។

إِنَّ ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ لَهُمْ
جَنَّٰتٌ تَجْرِى مِن تَحْتِهَا ٱلْأَنْهَٰرُ ۚ ذَٰلِكَ
ٱلْفَوْزُ ٱلْكَبِيرُ ﴿١١﴾

១២-ពិតប្រាកដណាស់ ទារុណកម្មនៃម្ចាស់របស់អ្នកគឺខ្លាំងក្លាបំផុត ។

إِنَّ بَطۡشَ رَبِّكَ لَشَدِيدٌ ﴿١٢﴾

១៣-ពិតប្រាកដណាស់ ទ្រង់គឺជាអ្នកដែលបង្កើត និងជាអ្នកធ្វើឱ្យរស់ឡើងវិញ ។

إِنَّهُۥ هُوَ يُبۡدِئُ وَيُعِيدُ ﴿١٣﴾

១៤-ហើយទ្រង់មហាអភ័យទោស មហាអាណិតស្រឡាញ់ ។

وَهُوَ ٱلۡغَفُورُ ٱلۡوَدُودُ ﴿١٤﴾

១៥-ម្ចាស់នៃអារ៉ស្ហដ៏ថ្កុំថ្កើង ។

ذُو ٱلۡعَرۡشِ ٱلۡمَجِيدُ ﴿١٥﴾

១៦-ជាម្ចាស់ដែលធ្វើតាមអ្វីដែលទ្រង់មានចេតនា ។

فَعَّالٞ لِّمَا يُرِيدُ ﴿١٦﴾

១៧-តើរឿងរបស់កងទ័ពបានមកដល់អ្នក(មូហាំម៉ាត់)ឬទេ?

هَلۡ أَتَىٰكَ حَدِيثُ ٱلۡجُنُودِ ﴿١٧﴾

១៨-(ដូចជា)ហ្វៀរអោន និងសាមូដ ។

فِرۡعَوۡنَ وَثَمُودَ ﴿١٨﴾

១៩-ផ្ទុយទៅវិញ ពួកដែលគ្មានជំនឿនៅតែព្យាយាមបដិសេធ ។

بَلِ ٱلَّذِينَ كَفَرُواْ فِي تَكۡذِيبٖ ﴿١٩﴾

២០-ហើយអល់ឡោះគឺជាអ្នកឡោមព័ទ្ធពីខាងក្រោយពួកគេ (ដឹងរាល់សកម្មភាពរបស់ពួកគេ) ។

وَٱللَّهُ مِن وَرَآئِهِم مُّحِيطُۢ ﴿٢٠﴾

២១-ផ្ទុយទៅវិញ វាគឺជាគម្ពីរគួរអានដ៏មហាថ្កុំថ្កើង ។

بَلۡ هُوَ قُرۡءَانٞ مَّجِيدٞ ﴿٢١﴾

២២-ដែលមាននៅក្នុងសៀវភៅកំណត់ត្រា(ឡាវហុលម៉ះ-ហ្វូស) ។

فِي لَوۡحٖ مَّحۡفُوظِۭ ﴿٢٢﴾

## ជំពូកអាត់តារិក

سورة الطارق

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-អល់ឡោះស្បថនឹងមេឃ និងអាត់តារិក ។

وَٱلسَّمَآءِ وَٱلطَّارِقِ ﴿١﴾

២-ហើយអ្វីដែលធ្វើឱ្យអ្នកដឹងថា អាត់តារិកជាអ្វីនោះ?

وَمَآ أَدۡرَىٰكَ مَا ٱلطَّارِقُ ﴿٢﴾

៣-គឺជាផ្កាយដែលមានរស្មីភ្លឺចិញ្ចាច ។

ٱلنَّجۡمُ ٱلثَّاقِبُ ﴿٣﴾

៤-បុគ្គលគ្រប់ៗរូបគឺសុទ្ធតែមានអ្នកថែរក្សាគេ ។

إِن كُلُّ نَفۡسٖ لَّمَّا عَلَيۡهَا حَافِظٞ ﴿٤﴾

៥-ដូច្នេះ ចូរឱ្យមនុស្សលោកមើលចុះថា តើរូបគេត្រូវបាន

فَلۡيَنظُرِ ٱلۡإِنسَٰنُ مِمَّ خُلِقَ ﴿٥﴾

បង្កើតមកពីអ្វី ?

خُلِقَ مِن مَّآءٍ دَافِقٍ ۝٦

៦-រូបគេត្រូវបានបង្កើតមកពីទឹកដែលបាញ់ចេញ(ពីប្រដាប់ភេទបុរសចូលទៅក្នុងប្រដាប់ភេទស្ត្រី)

يَخْرُجُ مِنۢ بَيْنِ ٱلصُّلْبِ وَٱلتَّرَآئِبِ ۝٧

៧-ដែលវាចេញពីឆ្អឹងខ្នងបុរស និងឆ្អឹងជំនីស្ត្រី ។

إِنَّهُۥ عَلَىٰ رَجْعِهِۦ لَقَادِرٌ ۝٨

៨-ពិតប្រាកដណាស់ ទ្រង់ជាអ្នកមានអានុភាពក្នុងការធ្វើឱ្យគេរស់ឡើងវិញ ។

يَوْمَ تُبْلَى ٱلسَّرَآئِرُ ۝٩

៩-នៅថ្ងៃដែលអាថិកំបាំងទាំងអស់ត្រូវបានលាតត្រដាង ។

فَمَا لَهُۥ مِن قُوَّةٍ وَلَا نَاصِرٍ ۝١٠

១០-ពេលនោះគេគ្មានអំណាច ហើយក៏គ្មានអ្នកជួយដែរ ។

وَٱلسَّمَآءِ ذَاتِ ٱلرَّجْعِ ۝١١

១១-អល់ឡោះស្បថនឹងមេឃដែលមានភ្លៀងធ្លាក់ម្តងហើយម្តងទៀត ។

وَٱلْأَرْضِ ذَاتِ ٱلصَّدْعِ ۝١٢

១២-និងផែនដីដែលមានការប្រេះបែក(ដោយសាររុក្ខជាតិលូតលាស់) ។

إِنَّهُۥ لَقَوْلٌ فَصْلٌ ۝١٣

១៣-ពិតប្រាកដណាស់ វា(គម្ពីរគួរអាន)គឺជាពាក្យពេចន៍ដែលមានការបែងចែក(រវាងខុសនិងត្រូវ) ។

وَمَا هُوَ بِٱلْهَزْلِ ۝١٤

១៤-ហើយគម្ពីរគួរអាន ក៏មិនមែនសម្រាប់លេងសើចដែរ ។

إِنَّهُمْ يَكِيدُونَ كَيْدًا ۝١٥

១៥-ពិតប្រាកដណាស់ ពួកគេរៀបចំល្បិចកលអាក្រក់(ដើម្បីប្រឆាំងនឹងមូហាំម៉ាត់) ។

وَأَكِيدُ كَيْدًا ۝١٦

១៦-ហើយយើងក៏មានផែនការ(ដើម្បីតបតនឹងពួកគេ)វិញដែរ ។

فَمَهِّلِ ٱلْكَٰفِرِينَ أَمْهِلْهُمْ رُوَيْدًۢا ۝١٧

១៧-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)ពន្យារពេលឱ្យពួកគ្មានជំនឿ និងរង់ចាំមើលពួកគេមួយរយៈសិនចុះ ។

## سورة الأعلى

## ជំពូកអាល់អាក់ឡា

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

سَبِّحِ ٱسْمَ رَبِّكَ ٱلْأَعْلَى ۝١

១-ចូរអ្នក(មូហាំម៉ាត់)លើកតម្កើងនាមនៃម្ចាស់របស់អ្នកដ៏ឧត្តុង្គឧត្តមចុះ ។

ٱلَّذِى خَلَقَ فَسَوَّىٰ ﴿٢﴾

២-ទ្រង់ជាអ្នកដែលបានបង្កើត(អ្វីៗទាំងអស់) រួចទ្រង់បានរៀបចំឱ្យមានលក្ខណៈសមរម្យ។

وَٱلَّذِى قَدَّرَ فَهَدَىٰ ﴿٣﴾

៣-និងជាអ្នកដែលបានកំណត់វាសនា និងផ្ដល់ការចង្អុលបង្ហាញ។

وَٱلَّذِىٓ أَخْرَجَ ٱلْمَرْعَىٰ ﴿٤﴾

៤-និងជាអ្នកដែលបណ្ដុះរុក្ខជាតិបៃតងគ្រប់បែបយ៉ាង។

فَجَعَلَهُۥ غُثَآءً أَحْوَىٰ ﴿٥﴾

៥-ក្រោយមកទ្រង់បានធ្វើឱ្យវាក្លាយជាចំបើងស្ងួតពណ៌ខ្មៅ។

سَنُقْرِئُكَ فَلَا تَنسَىٰٓ ﴿٦﴾

៦-យើងនឹងសូត្រ(គម្ពីរគួរអាន)ឱ្យអ្នក(មូហាំម៉ាត់)ស្ដាប់ ហើយអ្នកនឹងមិនភ្លេចវាឡើយ។

إِلَّا مَا شَآءَ ٱللَّهُ ۚ إِنَّهُۥ يَعْلَمُ ٱلْجَهْرَ وَمَا يَخْفَىٰ ﴿٧﴾

៧-លើកលែងតែអ្វីដែលអល់ឡោះមានចេតនា(ឱ្យអ្នកភ្លេច)ប៉ុណ្ណោះ។ ពិតប្រាកដណាស់ ទ្រង់ដឹងនូវអ្វីដែលលាតត្រដាង និងលាក់កំបាំង។

وَنُيَسِّرُكَ لِلْيُسْرَىٰ ﴿٨﴾

៨-ហើយយើងនឹងសម្រួលឱ្យអ្នកនូវមាគ៌ាដ៏ងាយស្រួល(គ្រប់កិច្ចការ)។

فَذَكِّرْ إِن نَّفَعَتِ ٱلذِّكْرَىٰ ﴿٩﴾

៩-ដូច្នេះ ចូរអ្នកក្រើនរំលឹកចុះ ប្រសិនបើការក្រើនរំលឹកនោះមានផលប្រយោជន៍

سَيَذَّكَّرُ مَن يَخْشَىٰ ﴿١٠﴾

១០-អ្នកដែលកោតខ្លាចអល់ឡោះ នឹងទទួលយកការក្រើនរំលឹក។

وَيَتَجَنَّبُهَا ٱلْأَشْقَى ﴿١١﴾

១១-ប៉ុន្ដែអ្នកដែលមិនកោតខ្លាចអល់ឡោះនឹងគេចចេញពីវា

ٱلَّذِى يَصْلَى ٱلنَّارَ ٱلْكُبْرَىٰ ﴿١٢﴾

១២-គឺជាអ្នកដែលនឹងត្រូវចូលទៅក្នុងភ្លើងនរកយ៉ាងធំធេង។

ثُمَّ لَا يَمُوتُ فِيهَا وَلَا يَحْيَىٰ ﴿١٣﴾

១៣-បន្ទាប់មកគេមិនអាចស្លាប់ ហើយក៏មិនអាចរស់ដោយងាយស្រួលដែរនៅក្នុងនរកនោះ។

قَدْ أَفْلَحَ مَن تَزَكَّىٰ ﴿١٤﴾

១៤-អ្នកដែលសំអាតខ្លួន(ពីប្រការស្ហ៊ីរក) ពិតជាទទួលបានជោគជ័យ។

وَذَكَرَ ٱسْمَ رَبِّهِۦ فَصَلَّىٰ ﴿١٥﴾

១៥-និងអ្នកដែលបានរំលឹកនាមនៃម្ចាស់របស់គេ ហើយនិងប្រតិបត្ដិសឡាត។

១៦-ផ្ទុយទៅវិញ ពួកអ្នកបែរជាស្រឡាញ់ការរស់នៅក្នុងលោកិយទៅវិញ

بَلۡ تُؤۡثِرُونَ ٱلۡحَيَوٰةَ ٱلدُّنۡيَا (١٦)

១៧-ថ្វីត្បិតតែថ្ងៃបរលោកវាប្រសើរជាងនិងអមតៈក៏ដោយ ។

وَٱلۡأٓخِرَةُ خَيۡرٞ وَأَبۡقَىٰٓ (١٧)

១៨-ពិតប្រាកដណាស់ រឿងនេះគឺមានចែងនៅក្នុងគម្ពីរមុនៗ ។

إِنَّ هَٰذَا لَفِي ٱلصُّحُفِ ٱلۡأُولَىٰ (١٨)

១៩-ដូចជាគម្ពីររបស់អ៊ីព្រហ៊ីម និងមូសាជាដើម ។

صُحُفِ إِبۡرَٰهِيمَ وَمُوسَىٰ (١٩)

## ជំពូកអាល់ហ្គាស្ហ៊ីយ៉ះ

سورة الغاشية

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-តើដំណឹងនៃថ្ងៃបរលោកបានមកដល់អ្នក( មូហាំម៉ាត់) ហើយឬនៅ?

هَلۡ أَتَىٰكَ حَدِيثُ ٱلۡغَٰشِيَةِ (١)

២-នៅថ្ងៃនោះទឹកមុខ( របស់ពួកគ្មានជំនឿ) គឺមានភាពអាម៉ាស់ ។

وُجُوهٞ يَوۡمَئِذٍ خَٰشِعَةٌ (٢)

៣-រវល់យ៉ាងខ្លាំង និងនឿយហត់បំផុត ។

عَامِلَةٞ نَّاصِبَةٞ (٣)

៤-ពួកគេនឹងចូលក្នុងភ្លើងនរកដ៏សែនក្តៅ ។

تَصۡلَىٰ نَارًا حَامِيَةٗ (٤)

៥-ពួកគេនឹងត្រូវគេឱ្យផឹកទឹកដ៏ក្តៅបំផុត ។

تُسۡقَىٰ مِنۡ عَيۡنٍ ءَانِيَةٖ (٥)

៦-គ្មានចំណីអាហារណាសម្រាប់ពួកគេក្រៅពីបន្លានិងជាតិពុល

لَّيۡسَ لَهُمۡ طَعَامٌ إِلَّا مِن ضَرِيعٖ (٦)

៧-ដែលវានឹងមិនធ្វើឱ្យធំធាត់ និងមិនធ្វើឱ្យបាត់ការស្រេកឃ្លាននោះឡើយ ។

لَّا يُسۡمِنُ وَلَا يُغۡنِي مِن جُوعٖ (٧)

៨-នៅថ្ងៃនោះដែរ ទឹកមុខ( របស់បណ្តាអ្នកមានជំនឿ) ប្រកបដោយក្តីរីករាយ ។

وُجُوهٞ يَوۡمَئِذٖ نَّاعِمَةٞ (٨)

៩-ដោយសារតែពួកគេពេញចិត្តចំពោះការប្រឹងប្រែងរបស់ខ្លួន( នៅក្នុងលោកិយ) ។

لِّسَعۡيِهَا رَاضِيَةٞ (٩)

១០-នៅក្នុងឋានសួគ៌ដ៏ខ្ពស់ត្រដែត

فِي جَنَّةٍ عَالِيَةٖ (١٠)

១១-ដែលនៅក្នុងវានោះ ពួកគេមិនឮពាក្យសំដីឥតប្រយោជន៍ឡើយ ។

لَّا تَسۡمَعُ فِيهَا لَٰغِيَةٗ (١١)

| | |
|---|---|
| ១២-នៅទីនោះ មានប្រភពទឹកដែលហូរ ។ | فِيهَا عَيۡنٞ جَارِيَةٞ ١٢ |
| ១៣-នៅទីនោះដែរ មានគ្រែខ្ពស់ៗ ។ | فِيهَا سُرُرٞ مَّرۡفُوعَةٞ ١٣ |
| ១៤-និងកែវដែលបានរៀបចំទុកដាក់ជាស្រេច ។ | وَأَكۡوَابٞ مَّوۡضُوعَةٞ ١٤ |
| ១៥-និងខ្នើយកើយរៀបដាក់ជាជួរៗ ។ | وَنَمَارِقُ مَصۡفُوفَةٞ ١٥ |
| ១៦-និងកម្រាលព្រំគ្រប់បែបយ៉ាងដែលបានក្រាលសន្ធឹងរួចជាស្រេច ។ | وَزَرَابِيُّ مَبۡثُوثَةٌ ١٦ |
| ១៧-ហើយតើពួកគេមិនបានពិចារណាចំពោះសត្វអូដ្ឋទេឬថា វាត្រូវបានគេបង្កើតយ៉ាងដូចម្ដេច? | أَفَلَا يَنظُرُونَ إِلَى ٱلۡإِبِلِ كَيۡفَ خُلِقَتۡ ١٧ |
| ១៨-និងមើលទៅមេឃ តើវាត្រូវបានគេលើកឱ្យខ្ពស់ឡើងយ៉ាងដូចម្ដេច? | وَإِلَى ٱلسَّمَآءِ كَيۡفَ رُفِعَتۡ ١٨ |
| ១៩-និងមើលទៅភ្នំទាំងឡាយ តើវាត្រូវបានគេបោះភ្ជាប់យ៉ាងរឹងមាំដូចម្ដេច ? | وَإِلَى ٱلۡجِبَالِ كَيۡفَ نُصِبَتۡ ١٩ |
| ២០-និងមើលទៅផែនដី តើវាត្រូវបានគេពន្លាតសន្ធឹងយ៉ាងដូចម្ដេចដែរ ? | وَإِلَى ٱلۡأَرۡضِ كَيۡفَ سُطِحَتۡ ٢٠ |
| ២១-ដូច្នេះ ចូរអ្នក(មូហាំម៉ាត់)ក្រើនរំលឹកចុះ ការពិតអ្នកគ្រាន់តែជាអ្នកដែលក្រើនរំលឹកប៉ុណ្ណោះ ។ | فَذَكِّرۡ إِنَّمَآ أَنتَ مُذَكِّرٞ ٢١ |
| ២២-អ្នកពុំមែនជាអ្នកប្រើអំណាចផ្ដាច់ការទៅលើពួកគេឡើយ ។ | لَّسۡتَ عَلَيۡهِم بِمُصَيۡطِرٍ ٢٢ |
| ២៣-លើកលែងតែអ្នកណាដែលងាកចេញ និងគ្មានជំនឿប៉ុណ្ណោះ ។ | إِلَّا مَن تَوَلَّىٰ وَكَفَرَ ٢٣ |
| ២៤-អល់ឡោះនឹងធ្វើទារុណកម្មគេនូវទារុណកម្មមួយយ៉ាងធ្ងន់ធ្ងរបំផុត ។ | فَيُعَذِّبُهُ ٱللَّهُ ٱلۡعَذَابَ ٱلۡأَكۡبَرَ ٢٤ |
| ២៥-ពិតប្រាកដណាស់ ការវិលត្រឡប់របស់ពួកគេគឺមកកាន់យើងតែម្នាក់គត់ ។ | إِنَّ إِلَيۡنَآ إِيَابَهُمۡ ٢٥ |

២៦-បន្ទាប់មក ពិតប្រាកដណាស់ ការជំនុំជំរះរបស់ពួកគេ គឺជាតួនាទីរបស់យើង ។

ثُمَّ إِنَّ عَلَيْنَا حِسَابَهُم ﴿٢٦﴾

## ជំពូកអាល់ហ្វាជ់រ៍

سورة الفجر

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

១-អល់ឡោះស្បថនឹងពេលទៀបភ្លឺ ។

وَٱلْفَجْرِ ﴿١﴾

២-និងយប់ទាំងដប់(ដប់ថ្ងៃដំបូងនៃខែហ្ស៊ុលហិជ្ជះ) ។

وَلَيَالٍ عَشْرٍ ﴿٢﴾

៣-និងថ្ងៃគត់គូ និងថ្ងៃសេស ។

وَٱلشَّفْعِ وَٱلْوَتْرِ ﴿٣﴾

៤-និងពេលយប់ នៅពេលដែលវាកន្លងផុតទៅ ។

وَٱلَّيْلِ إِذَا يَسْرِ ﴿٤﴾

៥-តើការស្បថនៅក្នុងរឿងទាំងនេះមិនគ្រប់គ្រាន់សម្រាប់អ្នកដែលស្វែងយល់ទេឬ ?

هَلْ فِى ذَٰلِكَ قَسَمٌ لِّذِى حِجْرٍ ﴿٥﴾

៦-តើអ្នក(មូហាំម៉ាត់)មិនបានឃើញទេឬ ម្ចាស់របស់អ្នកបានធ្វើដូចម្ដេចចំពោះក្រុមអាដ

أَلَمْ تَرَ كَيْفَ فَعَلَ رَبُّكَ بِعَادٍ ﴿٦﴾

៧-(នោះគឺ)កុលសម្ព័ន្ធអ៊ីរ៉មដែលមានកម្លាំងខ្លាំងក្លា និងមានសំណង់ខ្ពស់ៗ

إِرَمَ ذَاتِ ٱلْعِمَادِ ﴿٧﴾

៨-ដែលគេមិនទាន់បានបង្កើតដូចវានៅក្នុងផែនដីនេះ?

ٱلَّتِى لَمْ يُخْلَقْ مِثْلُهَا فِى ٱلْبِلَٰدِ ﴿٨﴾

៩-និងក្រុមសាមូដដែលបានដាប់ថ្មនៅក្នុងជ្រលងភ្នំ(ធ្វើជាលំនៅដ្ឋាន)

وَثَمُودَ ٱلَّذِينَ جَابُوا۟ ٱلصَّخْرَ بِٱلْوَادِ ﴿٩﴾

១០-ហើយនិងហ្វៀរអោនដែលមានពលទាហានពង្រឹងអំណាចរបស់គេនោះ?

وَفِرْعَوْنَ ذِى ٱلْأَوْتَادِ ﴿١٠﴾

១១-ពួកគេជាពួកដែលបានបំពាននៅលើផែនដីនេះ ។

ٱلَّذِينَ طَغَوْا۟ فِى ٱلْبِلَٰدِ ﴿١١﴾

១២-ហើយពួកគេថែមទាំងបានបង្កវិនាសកម្មយ៉ាងច្រើននៅលើវាទៀតផងនោះ ។

فَأَكْثَرُوا۟ فِيهَا ٱلْفَسَادَ ﴿١٢﴾

១៣-ដូច្នេះ ម្ចាស់របស់អ្នកបានទម្លាក់លើពួកគេនូវទារុណកម្មដ៏ឈឺចាប់ ។

فَصَبَّ عَلَيْهِمْ رَبُّكَ سَوْطَ عَذَابٍ ﴿١٣﴾

إِنَّ رَبَّكَ لَبِٱلۡمِرۡصَادِ ﴿١٤﴾

១៤-ពិតប្រាកដណាស់ ម្ចាស់របស់អ្នកជាអ្នកដែលឃ្លាំមើល (រាល់ទង្វើនៃខ្ញុំរបស់ទ្រង់)។

فَأَمَّا ٱلۡإِنسَٰنُ إِذَا مَا ٱبۡتَلَىٰهُ رَبُّهُۥ فَأَكۡرَمَهُۥ وَنَعَّمَهُۥ فَيَقُولُ رَبِّيٓ أَكۡرَمَنِ ﴿١٥﴾

១៥-រីឯមនុស្សលោក នៅពេលដែលម្ចាស់របស់គេបានសាកល្បងគេដោយបានលើកតម្កើងនិងប្រទាននៀកម៉ាត់ដល់គេនោះ គេនឹងនិយាយថាៈ ម្ចាស់របស់ខ្ញុំជាអ្នកដែលបានលើកតម្កើងខ្ញុំ។

وَأَمَّآ إِذَا مَا ٱبۡتَلَىٰهُ فَقَدَرَ عَلَيۡهِ رِزۡقَهُۥ فَيَقُولُ رَبِّيٓ أَهَٰنَنِ ﴿١٦﴾

១៦-ប៉ុន្តែនៅពេលដែលទ្រង់សាកល្បងគេ ដោយបានក្បិតក្បៀតនូវលាភសក្ការៈរបស់ទ្រង់ចំពោះគេនោះ គេនឹងនិយាយថាៈ ម្ចាស់របស់ខ្ញុំធ្វើឱ្យខ្ញុំទទួលនូវភាពអាម៉ាស់។

كَلَّاۖ بَل لَّا تُكۡرِمُونَ ٱلۡيَتِيمَ ﴿١٧﴾

១៧-ទេ! ផ្ទុយទៅវិញ ពួកអ្នកគ្មានចិត្តសប្បុរសចំពោះកូនកំព្រាឡើយ។

وَلَا تَحَٰٓضُّونَ عَلَىٰ طَعَامِ ٱلۡمِسۡكِينِ ﴿١٨﴾

១៨-ហើយពួកអ្នកមិនបានជំរុញគ្នាក្នុងការផ្តល់ចំណីអាហារដល់អ្នកក្រីក្រឡើយ។

وَتَأۡكُلُونَ ٱلتُّرَاثَ أَكۡلٗا لَّمّٗا ﴿١٩﴾

១៩-ហើយពួកអ្នកស៊ីកេរមរតកដោយភាពលោភលន់។

وَتُحِبُّونَ ٱلۡمَالَ حُبّٗا جَمّٗا ﴿٢٠﴾

២០-ហើយពួកអ្នកថែមទាំងស្រឡាញ់ទ្រព្យសម្បត្តិហួសហេតុទៀតផង។

كَلَّآ إِذَا دُكَّتِ ٱلۡأَرۡضُ دَكّٗا دَكّٗا ﴿٢١﴾

២១-ទេ! នៅពេលដែលផែនដីត្រូវបានគេធ្វើឱ្យរញ្ជួយយ៉ាងខ្លាំង។

وَجَآءَ رَبُّكَ وَٱلۡمَلَكُ صَفّٗا صَفّٗا ﴿٢٢﴾

២២-ហើយម្ចាស់របស់អ្នក(មូហាំម៉ាត់)បានមកដល់ ហើយម៉ាឡាអ៊ីកាត់ក៏បានមកដល់ដោយតំរៀបជាជួរៗដែរ។

وَجِاْيٓءَ يَوۡمَئِذِۭ بِجَهَنَّمَۚ يَوۡمَئِذٖ يَتَذَكَّرُ ٱلۡإِنسَٰنُ وَأَنَّىٰ لَهُ ٱلذِّكۡرَىٰ ﴿٢٣﴾

២៣-ហើយនៅថ្ងៃនោះ នរកជើហាន់ណាំត្រូវបានគេនាំមក។ នៅថ្ងៃនោះដែរ មនុស្សលោកនឹងភ្ញាក់រលឹក។ តើគេមានការភ្ញាក់រលឹកយ៉ាងដូចម្តេច ?

يَقُولُ يَٰلَيۡتَنِي قَدَّمۡتُ لِحَيَاتِي ﴿٢٤﴾

២៤-គេនឹងនិយាយថាៈ ឱអនិច្ចាខ្លួនខ្ញុំអើយ! ខ្ញុំគួរតែបានសាងអំពើល្អសម្រាប់ខ្លួនខ្ញុំ(ក្នុងលោកិយ)។

فَيَوۡمَئِذٖ لَّا يُعَذِّبُ عَذَابَهُۥٓ أَحَدٞ ﴿٢٥﴾

២៥-ដូច្នេះ នៅថ្ងៃនោះគ្មាននរណាម្នាក់អាចធ្វើទារុណកម្មដូចទារុណកម្មរបស់ទ្រង់ឡើយ។

| | |
|---|---|
| ២៦-ហើយក៏គ្មាននរណាអាចចងដូចចំណងរបស់ទ្រង់ដែរ ។ | وَلَا يُوثِقُ وَثَاقَهُۥٓ أَحَدٌ ٢٦ |
| ២៧-ឱព្រលឹងដែលនឹងនរ ! | يَٰٓأَيَّتُهَا ٱلنَّفْسُ ٱلْمُطْمَئِنَّةُ ٢٧ |
| ២៨-ចូរអ្នកវិលត្រឡប់ទៅរកម្ចាស់របស់អ្នកវិញដោយក្តីរីករាយនិងយល់ព្រមពីទ្រង់ចុះ ។ | ٱرْجِعِىٓ إِلَىٰ رَبِّكِ رَاضِيَةً مَّرْضِيَّةً ٢٨ |
| ២៩-ហើយចូរអ្នកចូលទៅក្នុងចំណោមខ្ញុំរបស់យើង(ដែលសាងអំពើល្អ)ចុះ ។ | فَٱدْخُلِى فِى عِبَٰدِى ٢٩ |
| ៣០-ហើយចូរអ្នកចូលឋានសួគ៌របស់យើងចុះ ។ | وَٱدْخُلِى جَنَّتِى ٣٠ |

## ជំពូកអាល់ហ្ពាឡាត់

سورة البلد

| | |
|---|---|
| ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។ | بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ |
| ១-យើង(អល់ឡោះ)ស្បថនឹងទីក្រុងនេះ(ទីក្រុងម៉ាក្កះ) ។ | لَآ أُقْسِمُ بِهَٰذَا ٱلْبَلَدِ ١ |
| ២-ខណៈដែលអ្នក(មូហាំម៉ាត់)ជាអ្នកដែលរស់នៅក្នុងទីក្រុងនេះ ។ | وَأَنتَ حِلٌّۢ بِهَٰذَا ٱلْبَلَدِ ٢ |
| ៣-ហើយទ្រង់បានស្បថនឹងឪពុកមនុស្សលោក(អាដាំ) និងអ្នកដែលបានកើត(កូនចៅរបស់គាត់) ។ | وَوَالِدٍ وَمَا وَلَدَ ٣ |
| ៤-ជាការពិតណាស់ យើងបានបង្កើតមនុស្សលោកឱ្យស្ថិតនៅក្នុងភាពលំបាក ។ | لَقَدْ خَلَقْنَا ٱلْإِنسَٰنَ فِى كَبَدٍ ٤ |
| ៥-តើគេគិតថា គ្មានអ្នកណាអាចមានអានុភាពលើខ្លួនគេទេឬ ? | أَيَحْسَبُ أَن لَّن يَقْدِرَ عَلَيْهِ أَحَدٌ ٥ |
| ៦-ដោយគេនិយាយថាៈ ខ្ញុំបានចំណាយទ្រព្យសម្បត្តិយ៉ាងច្រើន ។ | يَقُولُ أَهْلَكْتُ مَالًا لُّبَدًا ٦ |
| ៧-តើគេគិតថា គ្មាននរណាម្នាក់បានឃើញគេទេឬ ? | أَيَحْسَبُ أَن لَّمْ يَرَهُۥٓ أَحَدٌ ٧ |
| ៨-តើយើងមិនបានបង្កើតគេឱ្យមានភ្នែកមួយគូ | أَلَمْ نَجْعَل لَّهُۥ عَيْنَيْنِ ٨ |
| ៩-និងអណ្តាតមួយ ហើយនិងបបូរមាត់ទេឬ ? | وَلِسَانًا وَشَفَتَيْنِ ٩ |
| ១០-ហើយយើងថែមទាំងបានចង្អុលបង្ហាញមាគ៌ាពីរ(ល្អ និង | وَهَدَيْنَٰهُ ٱلنَّجْدَيْنِ ١٠ |

អាក្រក់) ដល់គេទៀតផង។

១១-តែគេមិនបានដើរនៅលើមាគ៌ាដែលលំបាក( មាគ៌ាទៅកាន់ភាពជោគជ័យ) ឡើយ។

فَلَا ٱقۡتَحَمَ ٱلۡعَقَبَةَ ١١

១២-តើអ្វីដែលធ្វើឱ្យអ្នកដឹងថា មាគ៌ាដែលលំបាកជាអ្វីនោះ?

وَمَآ أَدۡرَىٰكَ مَا ٱلۡعَقَبَةُ ١٢

១៣-គឺការដោះលែងខ្ញុំបម្រើដាច់ថ្លៃឱ្យមានសិទ្ធិសេរីភាព។

فَكُّ رَقَبَةٍ ١٣

១៤-ឬផ្តល់ចំណីអាហារនៅក្នុងថ្ងៃមួយដែលមានគ្រោះទុរភិក្ស។

أَوۡ إِطۡعَٰمٞ فِي يَوۡمٖ ذِي مَسۡغَبَةٖ ١٤

១៥-( ឬផ្តល់ចំណីអាហារដល់) កូនកំព្រាដែលជាញាតិសន្តាន។

يَتِيمٗا ذَا مَقۡرَبَةٍ ١٥

១៦-ឬអ្នកក្រីក្រដែលគ្មានអ្វីសោះ។

أَوۡ مِسۡكِينٗا ذَا مَتۡرَبَةٖ ١٦

១៧- បន្ទាប់មក គេក៏ជាមនុស្សស្ថិតក្នុងចំណោមអ្នកដែលមានជំនឿ និងបានផ្តែផ្តាំគ្នាឱ្យមានការអត់ធ្មត់ ហើយនិងបានផ្តែផ្តាំគ្នាឱ្យមានក្តីមេត្តាករុណា។

ثُمَّ كَانَ مِنَ ٱلَّذِينَ ءَامَنُواْ وَتَوَاصَوۡاْ بِٱلصَّبۡرِ وَتَوَاصَوۡاْ بِٱلۡمَرۡحَمَةِ ١٧

១៨-អ្នកទាំងនោះគឺជាក្រុមដែលទទួលបញ្ជីដោយដៃស្តាំ។

أُوْلَٰٓئِكَ أَصۡحَٰبُ ٱلۡمَيۡمَنَةِ ١٨

១៩-ហើយពួកដែលគ្មានជំនឿនឹងអាយ៉ាត់ៗរបស់យើង ពួកគេគឺជាពួកដែលទទួលបញ្ជីដោយដៃឆ្វេង។

وَٱلَّذِينَ كَفَرُواْ بِـَٔايَٰتِنَا هُمۡ أَصۡحَٰبُ ٱلۡمَشۡـَٔمَةِ ١٩

២០-ភ្លើងនរកគ្របដណ្តប់លើពួកគេយ៉ាងជិត។

عَلَيۡهِمۡ نَارٞ مُّؤۡصَدَةُۢ ٢٠

## ជំពូកអាស្សាំស្ហ៍

## سورة الشمس

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

១-អល់ឡោះស្បថនឹងព្រះអាទិត្យ និងរស្មីដ៏ត្រចះត្រចង់របស់វានៅពេលព្រឹក។

وَٱلشَّمۡسِ وَضُحَىٰهَا ١

២-និងព្រះច័ន្ទនៅពេលដែលវាបានរះឡើងបន្ទាប់ពីព្រះអាទិត្យលិច ។

وَٱلۡقَمَرِ إِذَا تَلَىٰهَا ٢

៣-និងពេលថ្ងៃនៅពេលដែលព្រះអាទិត្យបានបញ្ចេញពន្លឺ។

وَٱلنَّهَارِ إِذَا جَلَّىٰهَا ٣

وَٱلَّيۡلِ إِذَا يَغۡشَىٰهَا ﴿٤﴾

៤-និងពេលយប់នៅពេលដែលវាបានគ្របដណ្តប់ព្រះអាទិត្យ ។

وَٱلسَّمَآءِ وَمَا بَنَىٰهَا ﴿٥﴾

៥-និងមេឃ និងអ្នកដែលបានបង្កើតវា ។

وَٱلۡأَرۡضِ وَمَا طَحَىٰهَا ﴿٦﴾

៦-និងផែនដី និងអ្នកដែលបានលាតសន្ធឹងវា ។

وَنَفۡسٖ وَمَا سَوَّىٰهَا ﴿٧﴾

៧-និងរូបរាង(អាដាំ) និងអ្នកដែលបានធ្វើឱ្យគេមានលក្ខណៈសមរម្យ ។

فَأَلۡهَمَهَا فُجُورَهَا وَتَقۡوَىٰهَا ﴿٨﴾

៨-រួចមកទ្រង់បានចង្អុលបង្ហាញដល់គេឱ្យស្គាល់នូវអំពើទុច្ចរិត និងអំពើសុច្ចរិតរបស់គេ ។

قَدۡ أَفۡلَحَ مَن زَكَّىٰهَا ﴿٩﴾

៩-អ្នកដែលសំអាតខ្លួនគេ(ដោយសាងអំពើល្អ) ពិតជាទទួលបានជោគជ័យ ។

وَقَدۡ خَابَ مَن دَسَّىٰهَا ﴿١٠﴾

១០-ហើយអ្នកដែលបានធ្វើឱ្យខ្លួនគេកខ្វក់(ដោយសាងអំពើអាក្រក់)ពិតជាបានខាតបង់ ។

كَذَّبَتۡ ثَمُودُ بِطَغۡوَىٰهَآ ﴿١١﴾

១១-ក្រុមសាមូដបានបដិសេធ(អ្នកនាំសាររបស់ពួកគេ)ដោយសារការបំពានរបស់ពួកគេ ។

إِذِ ٱنۢبَعَثَ أَشۡقَىٰهَا ﴿١٢﴾

១២-នៅពេលដែលជនកំណាចបំផុតក្នុងចំណោមពួកគេបានចេញមក(សម្លាប់សត្វអូដ្ឋញី) ។

فَقَالَ لَهُمۡ رَسُولُ ٱللَّهِ نَاقَةَ ٱللَّهِ وَسُقۡيَٰهَا ﴿١٣﴾

១៣-ពេលនោះអ្នកនាំសាររបស់អល់ឡោះ(សទ្បេះ)បានពោលទៅកាន់ពួកគេថាៈ (ចូរប្រុងប្រយ័ត្នចំពោះ)សត្វអូដ្ឋញីរបស់អល់ឡោះ ហើយកុំរារាំងដល់ការផឹករបស់វាឱ្យសោះ ។

فَكَذَّبُوهُ فَعَقَرُوهَا فَدَمۡدَمَ عَلَيۡهِمۡ رَبُّهُم بِذَنۢبِهِمۡ فَسَوَّىٰهَا ﴿١٤﴾

១៤-តែពួកគេបានបដិសេធនឹងគាត់ និងបានសម្លាប់វា ។ ពេលនោះម្ចាស់របស់ពួកគេបានបំផ្លាញពួកគេដោយសារតែបាបកម្មរបស់ពួកគេ ។ ហើយទ្រង់បានធ្វើឱ្យពួកគេវិនាសអន្តរាយទាំងអស់គ្នា ។

وَلَا يَخَافُ عُقۡبَٰهَا ﴿١٥﴾

១៥-ហើយទ្រង់មិនខ្លាចលទ្ធផលចុងក្រោយរបស់ពួកគេ(ដែលទ្រង់បានដាក់ទណ្ឌកម្មលើពួកគេ)នោះឡើយ ។

## سورة الليل

## ជំពូកអាល់ឡៃល៍

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

| | |
|---|---|
| ១-អល់ឡោះស្បថនឹងពេលយប់នៅពេលដែលវាគ្របដណ្តប់ដោយភាពងងឹត។ | وَٱلَّيۡلِ إِذَا يَغۡشَىٰ ١ |
| ២-និងពេលថ្ងៃ ពេលដែលវាបានបញ្ចេញពន្លឺដ៏ត្រចះត្រចង់។ | وَٱلنَّهَارِ إِذَا تَجَلَّىٰ ٢ |
| ៣-និងអ្នកដែលបានបង្កើតឱ្យមានប្រុស និងស្រី។ | وَمَا خَلَقَ ٱلذَّكَرَ وَٱلۡأُنثَىٰٓ ٣ |
| ៤-ពិតប្រាកដណាស់ ការប្រឹងប្រែងរបស់ពួកអ្នក(នៅក្នុងលោកិយ) គឺខុសៗគ្នា។ | إِنَّ سَعۡيَكُمۡ لَشَتَّىٰ ٤ |
| ៥-ចំណែកឯអ្នកណាដែលបានបរិច្ចាគទាន និងកោតខ្លាចអល់ឡោះ | فَأَمَّا مَنۡ أَعۡطَىٰ وَٱتَّقَىٰ ٥ |
| ៦-ហើយនិងមានជំនឿលើការតបស្នងល្អនោះ | وَصَدَّقَ بِٱلۡحُسۡنَىٰ ٦ |
| ៧-យើងនឹងរៀបចំឱ្យគេនូវមាគ៌ាដែលងាយស្រួល | فَسَنُيَسِّرُهُۥ لِلۡيُسۡرَىٰ ٧ |
| ៨-រីឯអ្នកណាហើយដែលកំណាញ់ និងមិនត្រូវការជំនួយពីអល់ឡោះ | وَأَمَّا مَنۢ بَخِلَ وَٱسۡتَغۡنَىٰ ٨ |
| ៩-ហើយនិងបានបដិសេធនឹងការតបស្នងល្អនោះ | وَكَذَّبَ بِٱلۡحُسۡنَىٰ ٩ |
| ១០-យើងនឹងរៀបចំឱ្យគេនូវមាគ៌ាដែលលំបាក។ | فَسَنُيَسِّرُهُۥ لِلۡعُسۡرَىٰ ١٠ |
| ១១-ហើយទ្រព្យសម្បត្តិរបស់គេមិនផ្តល់ផលប្រយោជន៍ដល់គេឡើយ នៅពេលដែលគេបានធ្លាក់ចូលទៅក្នុងនរកហើយនោះ។ | وَمَا يُغۡنِي عَنۡهُ مَالُهُۥٓ إِذَا تَرَدَّىٰٓ ١١ |
| ១២-ពិតប្រាកដណាស់ ភារកិច្ចរបស់យើងគឺផ្តល់ការចង្អុលបង្ហាញ។ | إِنَّ عَلَيۡنَا لَلۡهُدَىٰ ١٢ |
| ១៣-ហើយពិតប្រាកដណាស់ ថ្ងៃអវសាននៃលោកិយ និងថ្ងៃដំបូងនៃលោកិយ គឺជាកម្មសិទ្ធិរបស់យើង។ | وَإِنَّ لَنَا لَلۡأٓخِرَةَ وَٱلۡأُولَىٰ ١٣ |
| ១៤-ដូច្នេះ យើងបានដាស់តឿនព្រមានពួកអ្នកអំពីភ្លើងនរកដែលឆេះសន្ធោសន្ធៅ | فَأَنذَرۡتُكُمۡ نَارٗا تَلَظَّىٰ ١٤ |
| ១៥-ដែលគ្មានអ្នកណាចូលទៅក្នុងនោះ ក្រៅពីជនទុច្ចរិត | لَا يَصۡلَىٰهَآ إِلَّا ٱلۡأَشۡقَى ١٥ |
| ១៦-ដែលគេបានបដិសេធ(នឹងអ្នកនាំសារ) និងបានបែរចេញ | ٱلَّذِي كَذَّبَ وَتَوَلَّىٰ ١٦ |

(ពីជំនឿលើអល់ឡោះ) នោះឡើយ ។

وَسَيُجَنَّبُهَا ٱلۡأَتۡقَى ١٧

១៧-ហើយគេនឹងបញ្ចៀសអ្នកដែលកោតខ្លាចអល់ឡោះអំពីវា(នរក)

ٱلَّذِى يُؤۡتِى مَالَهُۥ يَتَزَكَّىٰ ١٨

១៨-ដែលបរិច្ចាគទ្រព្យសម្បត្តិរបស់គេដើម្បីសំអាតខ្លួន ។

وَمَا لِأَحَدٍ عِندَهُۥ مِن نِّعۡمَةٖ تُجۡزَىٰٓ ١٩

១៩-ហើយគេមិនត្រូវការការតបស្នងនៀកម៉ាត់ពីអ្នកណាម្នាក់ឡើយ ។

إِلَّا ٱبۡتِغَآءَ وَجۡهِ رَبِّهِ ٱلۡأَعۡلَىٰ ٢٠

២០-លើកលែងតែដើម្បីស្វែងរកការយល់ព្រមពីម្ចាស់របស់គេដ៏មហាឧត្តុង្គឧត្តមប៉ុណ្ណោះ ។

وَلَسَوۡفَ يَرۡضَىٰ ٢١

២១-ហើយគេពិតជានឹងពេញចិត្តជាមិនខាន(អ្វីដែលយើងតបស្នងដល់គេ) ។

## سورة الضحى

## ជំពូកអាត់ទូហា

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

وَٱلضُّحَىٰ ١

១-អល់ឡោះស្បថនឹងពេលព្រឹក ។

وَٱلَّيۡلِ إِذَا سَجَىٰ ٢

២-និងពេលយប់ នៅពេលដែលវាងងឹត ។

مَا وَدَّعَكَ رَبُّكَ وَمَا قَلَىٰ ٣

៣-ម្ចាស់របស់អ្នក(ឱមូហាំម៉ាត់) មិនបានបោះបង់អ្នក និងមិនបានស្អប់ខ្ពើមអ្នកឡើយ ។

وَلَلۡأٓخِرَةُ خَيۡرٞ لَّكَ مِنَ ٱلۡأُولَىٰ ٤

៤-ជាការពិតណាស់ ថ្ងៃបរលោកប្រសើរសម្រាប់អ្នកជាងលោកិយនេះទៅទៀត ។

وَلَسَوۡفَ يُعۡطِيكَ رَبُّكَ فَتَرۡضَىٰٓ ٥

៥-ហើយម្ចាស់របស់អ្នកពិតជានឹងប្រទាន(នៀកម៉ាត់)ឱ្យអ្នក ។ ហើយអ្នកប្រាកដជានឹងពេញចិត្តជាមិនខាន ។

أَلَمۡ يَجِدۡكَ يَتِيمٗا فَـَٔاوَىٰ ٦

៦-តើទ្រង់មិនបានឃើញអ្នក(មូហាំម៉ាត់)ជាកូនកំព្រា និងបានថែរក្សាអ្នកទេឬ?

وَوَجَدَكَ ضَآلّٗا فَهَدَىٰ ٧

៧-ហើយទ្រង់បានឃើញអ្នកវង្វេង រួចទ្រង់បានចង្អុលបង្ហាញផ្លូវដល់អ្នកទេឬ?

وَوَجَدَكَ عَآئِلٗا فَأَغۡنَىٰ ٨

៨-ហើយទ្រង់បានឃើញអ្នកជាអ្នកក្រ រួចទ្រង់បានធ្វើឱ្យអ្នក

មានបានទេឬ?

فَأَمَّا ٱلۡيَتِيمَ فَلَا تَقۡهَرۡ ٩

៩-ដូច្នេះ ចូរអ្នកកុំកៀបសង្កត់ចំពោះកូនកំព្រាឱ្យសោះ។

وَأَمَّا ٱلسَّآئِلَ فَلَا تَنۡهَرۡ ١٠

១០-ហើយចូរអ្នកកុំគំហកចំពោះអ្នកសុំទានឱ្យសោះ។

وَأَمَّا بِنِعۡمَةِ رَبِّكَ فَحَدِّثۡ ١١

១១-រីឯនៀកម៉ាត់ដែលម្ចាស់របស់អ្នកបានប្រទានឱ្យនោះ ចូរអ្នករៀបរាប់(ដឹងគុណ)។

## سورة الشرح

## ជំពូកអាស្សើរហ៍

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

أَلَمۡ نَشۡرَحۡ لَكَ صَدۡرَكَ ١

១-តើយើងមិនបានបើកចំហទ្រូងរបស់អ្នក(មូហាំម៉ាត់)ឱ្យអ្នក

وَوَضَعۡنَا عَنكَ وِزۡرَكَ ٢

២-និងបានដកបន្ទុករបស់អ្នកចេញពីអ្នក

ٱلَّذِيٓ أَنقَضَ ظَهۡرَكَ ٣

៣-ដែលបានផ្ទុកយ៉ាងធ្ងន់នៅលើខ្នងរបស់អ្នក

وَرَفَعۡنَا لَكَ ذِكۡرَكَ ٤

៤-ហើយយើងបានលើកកិត្តិនាមរបស់អ្នកឱ្យខ្ពង់ខ្ពស់ទេឬ ?

فَإِنَّ مَعَ ٱلۡعُسۡرِ يُسۡرًا ٥

៥-ហើយពិតប្រាកដណាស់ ជាមួយនឹងសេចក្ដីលំបាកវេទនា គឺភាពងាយស្រួល។

إِنَّ مَعَ ٱلۡعُسۡرِ يُسۡرًا ٦

៦-ពិតប្រាកដណាស់ ជាមួយនឹងសេចក្ដីលំបាកវេទនាគឺភាពងាយស្រួល។

فَإِذَا فَرَغۡتَ فَٱنصَبۡ ٧

៧-ដូច្នេះ នៅពេលដែលអ្នកបានបំពេញភារកិច្ច(កិច្ចការលោកិយ)រួចរាល់ហើយ ចូរអ្នកខិតខំគោរពសក្ការៈចំពោះយើង។

وَإِلَىٰ رَبِّكَ فَٱرۡغَب ٨

៨-ហើយទៅចំពោះម្ចាស់របស់អ្នកតែមួយគត់ ចូរអ្នកប៉ងប្រាថ្នានិងសង្ឃឹម។

## سورة التين

## ជំពូកអាត់ទីន

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

وَٱلتِّينِ وَٱلزَّيۡتُونِ ١

១-អល់ឡោះស្បថនឹងផ្លែទីន(ផ្លែល្វា)និងហ្សៃទូន(ផ្លែអូលីវ)។

وَطُورِ سِينِينَ ٢

២-និងភ្នំទូរស៊ីណា។

وَهَٰذَا ٱلْبَلَدِ ٱلْأَمِينِ ﴿٣﴾

៣-និងទីក្រុងនេះ(ម៉ាក្កះ)ដែលប្រកបដោយសុខសន្តិភាព។

لَقَدْ خَلَقْنَا ٱلْإِنسَٰنَ فِىٓ أَحْسَنِ تَقْوِيمٍ ﴿٤﴾

៤-ជាការពិតណាស់ យើងបានបង្កើតមនុស្សលោកស្ថិតក្នុងទ្រង់ទ្រាយមួយដ៏ល្អប្រសើរបំផុត។

ثُمَّ رَدَدْنَٰهُ أَسْفَلَ سَٰفِلِينَ ﴿٥﴾

៥-បន្ទាប់មកយើងបានបញ្ជូនពួកគេត្រឡប់ទៅកាន់កន្លែងដែលទាបជាងគេបំផុត(បាតនរក)។

إِلَّا ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ فَلَهُمْ أَجْرٌ غَيْرُ مَمْنُونٍ ﴿٦﴾

៦-លើកលែងតែបណ្តាអ្នកដែលមានជំនឿនិងបានសាងអំពើល្អត្រឹមត្រូវ គឺពួកគេនឹងទទួលបានផលបុណ្យជានិរន្តរ៍។

فَمَا يُكَذِّبُكَ بَعْدُ بِٱلدِّينِ ﴿٧﴾

៧-ដូច្នេះ បន្ទាប់ពីនេះទៅ តើអ្វីដែលធ្វើឱ្យអ្នក(មនុស្សលោក)បដិសេធនឹងថ្ងៃជំនុំជំរះ(ថ្ងៃបរលោក)នោះ?

أَلَيْسَ ٱللَّهُ بِأَحْكَمِ ٱلْحَٰكِمِينَ ﴿٨﴾

៨-តើអល់ឡោះមិនមែនជាអ្នកកាត់សេចក្តីដ៏ប្រសើរបំផុតជាងអ្នកកាត់សេចក្តីទាំងឡាយទេឬ?

## سورة العلق

## ជំពូកអាល់អាឡឹក

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

ٱقْرَأْ بِٱسْمِ رَبِّكَ ٱلَّذِى خَلَقَ ﴿١﴾

១-ចូរអ្នក(មូហាំម៉ាត់)សូត្រក្នុងនាមម្ចាស់របស់អ្នកដែលបានបង្កើត(នូវអ្វីៗទាំងអស់)ចុះ។

خَلَقَ ٱلْإِنسَٰنَ مِنْ عَلَقٍ ﴿٢﴾

២-ទ្រង់បានបង្កើតមនុស្សលោកពីកំណកឈាមមួយដុំ។

ٱقْرَأْ وَرَبُّكَ ٱلْأَكْرَمُ ﴿٣﴾

៣-ចូរអ្នកសូត្រចុះ ហើយម្ចាស់របស់អ្នកមហាសប្បុរស

ٱلَّذِى عَلَّمَ بِٱلْقَلَمِ ﴿٤﴾

៤-ដែលទ្រង់បានបង្រៀន(ការសរសេរ)ដោយស្លាបប៉ាកា។

عَلَّمَ ٱلْإِنسَٰنَ مَا لَمْ يَعْلَمْ ﴿٥﴾

៥-ទ្រង់បានបង្រៀនមនុស្សលោកនូវអ្វីដែលគេមិនបានដឹង។

كَلَّآ إِنَّ ٱلْإِنسَٰنَ لَيَطْغَىٰٓ ﴿٦﴾

៦-ទេ! ការពិតមនុស្សលោកគឺពិតជាបំពាន(លើច្បាប់របស់អល់ឡោះ)

أَن رَّءَاهُ ٱسْتَغْنَىٰٓ ﴿٧﴾

៧-ដោយសារគេយល់ឃើញថា ខ្លួនគេមានគ្រប់គ្រាន់ហើយ។

إِنَّ إِلَىٰ رَبِّكَ ٱلرُّجْعَىٰٓ ﴿٨﴾

៨-ពិតប្រាកដណាស់ កន្លែងវិលត្រឡប់ គឺឆ្ពោះទៅកាន់ម្ចាស់

របស់អ្នក។

أَرَءَيْتَ ٱلَّذِى يَنْهَىٰ ﴿٩﴾

៩-តើអ្នក(មូហាំម៉ាត់)បានឃើញអ្នកដែល(អាពូចាហាល់)ហាមឃាត់

عَبْدًا إِذَا صَلَّىٰٓ ﴿١٠﴾

១០-ខ្ញុំរបស់អល់ឡោះ(មូហាំម៉ាត់)នៅពេលដែលគេសឡាតទេឬ?

أَرَءَيْتَ إِن كَانَ عَلَى ٱلْهُدَىٰٓ ﴿١١﴾

១១-តើអ្នកយល់ឃើញយ៉ាងដូចម្ដេច ប្រសិនបើគេ(ខ្ញុំរបស់អល់ឡោះ)ស្ថិតនៅលើមាគ៌ាដ៏ត្រឹមត្រូវ

أَوْ أَمَرَ بِٱلتَّقْوَىٰٓ ﴿١٢﴾

១២-ឬគេបានប្រើគ្នាឱ្យកោតខ្លាចអល់ឡោះនោះ?

أَرَءَيْتَ إِن كَذَّبَ وَتَوَلَّىٰٓ ﴿١٣﴾

១៣-តើអ្នក(មូហាំម៉ាត់)យល់ឃើញយ៉ាងដូចម្ដេចដែរ ប្រសិនបើគេ(អាពូចាហាល់)បានបដិសេធនិងបែរចេញ(ពីជំនឿ)នោះ ?

أَلَمْ يَعْلَم بِأَنَّ ٱللَّهَ يَرَىٰ ﴿١٤﴾

១៤-តើគេ(អាពូចាហាល់)មិនដឹងទេឬថា អល់ឡោះពិតជាឃើញ(ទង្វើរបស់គេ)នោះ?

كَلَّا لَئِن لَّمْ يَنتَهِ لَنَسْفَعًۢا بِٱلنَّاصِيَةِ ﴿١٥﴾

១៥-ផ្ទុយទៅវិញ! ប្រសិនបើគេមិនឈប់បំពានទេនោះ យើងនឹងចាប់ក្បាលរបស់គេរុញទម្លាក់ទៅក្នុងនរកជាមិនខាន ។

نَاصِيَةٍ كَٰذِبَةٍ خَاطِئَةٍ ﴿١٦﴾

១៦-គឺក្បាលអ្នកដែលភូតកុហក និងសាងបាបកម្ម។

فَلْيَدْعُ نَادِيَهُۥ ﴿١٧﴾

១៧-ដូច្នេះ ចូរអ្នកឱ្យគេស្រែកហៅក្រុមរបស់គេមកជួយចុះ

سَنَدْعُ ٱلزَّبَانِيَةَ ﴿١٨﴾

១៨-យើងនឹងហៅអ្នកយាមនរក(ដើម្បីចាប់គេបោះទម្លាក់ទៅក្នុងនរក)។

كَلَّا لَا تُطِعْهُ وَٱسْجُدْ وَٱقْتَرِب ۩ ﴿١٩﴾

១៩-ផ្ទុយទៅវិញ ចូរអ្នក(មូហាំម៉ាត់)កុំធ្វើតាមគេឱ្យសោះ ហើយចូរអ្នកស៊ូជូត និងបញ្ជិតខ្លួនទៅចំពោះទ្រង់ចុះ។

## سورة القدر

## ជំពូកអាល់កទ័រ

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

إِنَّآ أَنزَلْنَٰهُ فِى لَيْلَةِ ٱلْقَدْرِ ﴿١﴾

១-ពិតប្រាកដណាស់ យើងបានបញ្ចុះគម្ពីរគួរអាននៅក្នុងយប់អាល់កទ័រ។

وَمَآ أَدْرَىٰكَ مَا لَيْلَةُ ٱلْقَدْرِ ﴿٢﴾

២-ហើយតើអ្វីដែលធ្វើឱ្យអ្នកដឹងថា យប់អាល់កទ័រជាអ្វីនោះ?

لَيۡلَةُ ٱلۡقَدۡرِ خَيۡرٞ مِّنۡ أَلۡفِ شَهۡرٖ ﴿٣﴾

៣-យប់អាល់កង់រ៍នោះគឺប្រសើរជាងមួយពាន់ខែ ។

تَنَزَّلُ ٱلۡمَلَٰٓئِكَةُ وَٱلرُّوحُ فِيهَا بِإِذۡنِ رَبِّهِم مِّن كُلِّ أَمۡرٖ ﴿٤﴾

៤-ម៉ាឡាអ៊ីកាត់ជាច្រើន និងជីព្រីលចុះមកក្នុងយប់នោះដោយមានការអនុញ្ញាតពីម្ចាស់របស់ពួកគេ ដើម្បីអនុវត្តរាល់បទបញ្ជា ។

سَلَٰمٌ هِيَ حَتَّىٰ مَطۡلَعِ ٱلۡفَجۡرِ ﴿٥﴾

៥-នៅក្នុងយប់នោះដែរ ពោរពេញទៅដោយសេចក្តីសុខសន្តិភាពរហូតដល់ហ្វាជើរលេចឡើង ។

## سورة البينة

## ជំពូកអាល់ប្ហៃយិណះ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

لَمۡ يَكُنِ ٱلَّذِينَ كَفَرُواْ مِنۡ أَهۡلِ ٱلۡكِتَٰبِ وَٱلۡمُشۡرِكِينَ مُنفَكِّينَ حَتَّىٰ تَأۡتِيَهُمُ ٱلۡبَيِّنَةُ ﴿١﴾

១-ពួកដែលគ្មានជំនឿនៃពួកអះលីគីតាប និងពួកមូស្ហរីគីន មិនបោះបង់(ភាពគ្មានជំនឿ និងប្រការស្ហ៊ីរិក)ជាដាច់ខាត រហូតទាល់តែភស្តុតាងយ៉ាងច្បាស់លាស់បានមកដល់ពួកគេ។

رَسُولٞ مِّنَ ٱللَّهِ يَتۡلُواْ صُحُفٗا مُّطَهَّرَةٗ ﴿٢﴾

២-(ភស្តុតាងនោះ)គឺអ្នកនាំសារម្នាក់(មូហាំម៉ាត់)មកពីអល់ឡោះ ដែលគេនឹងសូត្រគម្ពីរដ៏ស្អាតស្អំ(គម្ពីរគួរអាន)

فِيهَا كُتُبٞ قَيِّمَةٞ ﴿٣﴾

៣-ដែលនៅក្នុងគម្ពីរនោះគឺមានច្បាប់ និងមាគ៌ាដ៏ត្រឹមត្រូវ។

وَمَا تَفَرَّقَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ إِلَّا مِنۢ بَعۡدِ مَا جَآءَتۡهُمُ ٱلۡبَيِّنَةُ ﴿٤﴾

៤-ហើយពួកដែលត្រូវបានគេផ្តល់គម្ពីរឱ្យមិនដែលបែកបាក់គ្នាឡើយ លើកលែងតែក្រោយពេលដែលភស្តុតាងដ៏ច្បាស់លាស់បានមកដល់ពួកគេប៉ុណ្ណោះ។

وَمَآ أُمِرُوٓاْ إِلَّا لِيَعۡبُدُواْ ٱللَّهَ مُخۡلِصِينَ لَهُ ٱلدِّينَ حُنَفَآءَ وَيُقِيمُواْ ٱلصَّلَوٰةَ وَيُؤۡتُواْ ٱلزَّكَوٰةَۚ وَذَٰلِكَ دِينُ ٱلۡقَيِّمَةِ ﴿٥﴾

៥-ហើយពួកគេមិនត្រូវបានគេបញ្ជាឱ្យធ្វើអ្វីក្រៅពីឱ្យពួកគេគោរពសក្ការៈចំពោះអល់ឡោះ ដោយចិត្តស្មោះស និងត្រឹមត្រូវចំពោះទ្រង់ និងប្រតិបត្តិសឡាត ព្រមទាំងបរិច្ចាគហ្សាកាត់នោះឡើយ។ ហើយនោះគឺជាសាសនាដ៏ត្រឹមត្រូវ។

إِنَّ ٱلَّذِينَ كَفَرُواْ مِنۡ أَهۡلِ ٱلۡكِتَٰبِ وَٱلۡمُشۡرِكِينَ فِي نَارِ جَهَنَّمَ خَٰلِدِينَ فِيهَآۚ أُوْلَٰٓئِكَ هُمۡ شَرُّ ٱلۡبَرِيَّةِ ﴿٦﴾

៦-ពិតប្រាកដណាស់ ពួកដែលគ្មានជំនឿនៃពួកអះលីគីតាប និងពួកមូស្ហរីគីន គឺស្ថិតនៅក្នុងឋាននរកជើហាន់ណាំ ដែលពួកគេនៅក្នុងនោះជាអមតៈ។ ពួកទាំងនោះ គឺជាពួកដែលអាក្រក់បំផុតនៃសត្វលោក។

إِنَّ ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ

៧-ពិតប្រាកដណាស់ បណ្តាអ្នកដែលមានជំនឿ និងបានសាង

អំពើល្អត្រឹមត្រូវ ។ អ្នកទាំងនោះគឺជាអ្នកដែលល្អបំផុតនៃសត្វលោក ។

៨-ការតបស្នងរបស់ពួកគេនៅឯម្ចាស់របស់ពួកគេ គឺឋានសួគ៌អាត់និនដែលមានទន្លេជាច្រើនហូរពីក្រោមវា ដោយពួកគេស្ថិតនៅទីនោះជាអមតៈ ។ អល់ឡោះបានយល់ព្រមជាមួយពួកគេ ។ ហើយពួកគេក៏បានយល់ព្រមជាមួយទ្រង់វិញដែរ ។ ការតបស្នងនេះគឺសម្រាប់អ្នកដែលកោតខ្លាចម្ចាស់របស់គេ ។

## ជំពូកអាហ្សហ្សាល់ហ្សាឡះ

ក្នុងនាមអល់ឡោះមហាសប្បុរស  មហាអាណិតស្រឡាញ់ ។

១-នៅពេលដែលផែនដីត្រូវបានគេធ្វើឱ្យរញ្ជួយយ៉ាងខ្លាំងក្លា ។

២-ហើយផែនដីបានបញ្ចេញនូវសាកសពទាំងអស់ដែលមាននៅក្នុងខ្លួនរបស់វា ។

៣-ហើយមនុស្សលោកក៏និយាយថាៈ តើមានរឿងអ្វីកើតឡើងចំពោះផែនដីនេះ?

៤-នៅថ្ងៃនោះ វានឹងប្រកាសប្រាប់នូវរឿងរ៉ាវរបស់វា

៥-ពីព្រោះម្ចាស់របស់អ្នកបានបញ្ជាឱ្យវាធ្វើដូច្នោះ ។

៦-នៅថ្ងៃនោះដែរ មនុស្សលោកនឹងចេញពីផ្នូរមកទាំងក្រុមៗខុសៗគ្នា ដើម្បីទទួលការបង្ហាញឱ្យឃើញនូវអំពើទាំងឡាយរបស់ពួកគេ ។

៧-ដូច្នេះ អ្នកដែលធ្វើអំពើល្អសូម្បីមានទម្ងន់ប៉ុនលំអងធូលីក៏គេនឹងឃើញវាដែរ ។

៨-ចំណែកឯអ្នកដែលធ្វើអំពើអាក្រក់ សូម្បីមានទម្ងន់ប៉ុនលំអងធូលីក៏គេនឹងមើលឃើញវាដែរ ។

## ជំពូកអាល់អាឌីយ៉ាត

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

أُوْلَـٰٓئِكَ هُمْ خَيْرُ ٱلْبَرِيَّةِ ٧

جَزَآؤُهُمْ عِندَ رَبِّهِمْ جَنَّـٰتُ عَدْنٍ تَجْرِى
مِن تَحْتِهَا ٱلْأَنْهَـٰرُ خَـٰلِدِينَ فِيهَآ أَبَدًا ۖ رَّضِىَ
ٱللَّهُ عَنْهُمْ وَرَضُوا۟ عَنْهُ ۚ ذَٰلِكَ لِمَنْ خَشِىَ
رَبَّهُۥ ٨

## سورة الزلزلة

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

إِذَا زُلْزِلَتِ ٱلْأَرْضُ زِلْزَالَهَا ١

وَأَخْرَجَتِ ٱلْأَرْضُ أَثْقَالَهَا ٢

وَقَالَ ٱلْإِنسَـٰنُ مَا لَهَا ٣

يَوْمَئِذٍ تُحَدِّثُ أَخْبَارَهَا ٤

بِأَنَّ رَبَّكَ أَوْحَىٰ لَهَا ٥

يَوْمَئِذٍ يَصْدُرُ ٱلنَّاسُ أَشْتَاتًا لِّيُرَوْا۟
أَعْمَـٰلَهُمْ ٦

فَمَن يَعْمَلْ مِثْقَالَ ذَرَّةٍ خَيْرًا يَرَهُۥ ٧

وَمَن يَعْمَلْ مِثْقَالَ ذَرَّةٍ شَرًّا يَرَهُۥ ٨

## سورة العاديات

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

وَٱلۡعَٰدِيَٰتِ ضَبۡحٗا ١

១-អល់ឡោះស្បថនឹងសត្វសេះទាំងឡាយដែលរត់ទាំងដង្ហក់នៅក្នុងសមរភូមិ។

فَٱلۡمُورِيَٰتِ قَدۡحٗا ٢

២-និងសត្វសេះដែលរត់យ៉ាងលឿនចេញផ្កាភ្លើងតាមក្រចករបស់វា។

فَٱلۡمُغِيرَٰتِ صُبۡحٗا ٣

៣-និងសត្វសេះដែលវាបោលសម្រុកទៅខ្មាំងសត្រូវទាំងព្រឹកព្រលឹម។

فَأَثَرۡنَ بِهِۦ نَقۡعٗا ٤

៤- ហើយពួកវាធ្វើឱ្យធូលីហុយទ្រលោមនៅចំពោះមុខពួកសត្រូវ ។

فَوَسَطۡنَ بِهِۦ جَمۡعًا ٥

៥-ហើយពួកវាសម្រុកចូលទៅកណ្តាលហ្វូងសត្រូវ ។

إِنَّ ٱلۡإِنسَٰنَ لِرَبِّهِۦ لَكَنُودٞ ٦

៦-ពិតប្រាកដណាស់ មនុស្សលោកគឺរមិលគុណចំពោះម្ចាស់របស់គេ។

وَإِنَّهُۥ عَلَىٰ ذَٰلِكَ لَشَهِيدٞ ٧

៧-ហើយពិតប្រាកដណាស់ គេគឺជាសាក្សីលើរឿងនោះ

وَإِنَّهُۥ لِحُبِّ ٱلۡخَيۡرِ لَشَدِيدٌ ٨

៨-ពីព្រោះគេ គឺជាមនុស្សដែលស្រឡាញ់ទ្រព្យសម្បត្តិយ៉ាងខ្លាំង។

۞ أَفَلَا يَعۡلَمُ إِذَا بُعۡثِرَ مَا فِي ٱلۡقُبُورِ ٩

៩-ដូច្នេះ តើគេមិនដឹងទេឬថា នៅពេលដែលអ្វីៗនៅក្នុងផ្នូរត្រូវគេបញ្ចេញមក(ដើម្បីជំនុំជំរះ)?

وَحُصِّلَ مَا فِي ٱلصُّدُورِ ١٠

១០-និងអ្វីដែលមាននៅក្នុងចិត្ត(របស់មនុស្ស)នឹងត្រូវគេលាតត្រដាងឱ្យឃើញយ៉ាងច្បាស់នោះ ?

إِنَّ رَبَّهُم بِهِمۡ يَوۡمَئِذٖ لَّخَبِيرُۢ ١١

១១-ពិតប្រាកដណាស់ នៅថ្ងៃនោះម្ចាស់របស់ពួកគេដឹងបំផុតចំពោះរឿងរ៉ាវរបស់ពួកគេ។

## سورة القارعة

## ជំពូកអាល់ការិអះ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

ٱلۡقَارِعَةُ ١

១-អាល់ការិអះ។

مَا ٱلۡقَارِعَةُ ٢

២-តើអាល់ការិអះជាអ្វី ?

وَمَآ أَدۡرَىٰكَ مَا ٱلۡقَارِعَةُ ٣

៣-តើអ្វីដែលធ្វើឱ្យអ្នកដឹងថា អាល់ការិអះជាអ្វីនោះ?

يَوۡمَ يَكُونُ ٱلنَّاسُ كَٱلۡفَرَاشِ ٱلۡمَبۡثُوثِ ﴿٤﴾

៤-គឺជាថ្ងៃដែលមនុស្សលោកប្រៀបដូចជាហ្វូងសត្វមេអំបៅដែលហើរប្រសេចប្រសាច ។

وَتَكُونُ ٱلۡجِبَالُ كَٱلۡعِهۡنِ ٱلۡمَنفُوشِ ﴿٥﴾

៥-ហើយភ្នំទាំងឡាយប្រៀបដូចជារោមសត្វដែលត្រូវគេធ្វើឱ្យប៉ើង ។

فَأَمَّا مَن ثَقُلَتۡ مَوَٰزِينُهُۥ ﴿٦﴾

៦-ហើយរីឯអ្នកណាដែលភ្នែកជញ្ជីងរបស់គេធ្ងន់( ខាងអំពើល្អ) នោះ ។

فَهُوَ فِي عِيشَةٖ رَّاضِيَةٖ ﴿٧﴾

៧-គឺគេនឹងស្ថិតក្នុងការរស់នៅប្រកបដោយក្ដីពេញចិត្ត( នៅក្នុងឋានសួគ៌) ។

وَأَمَّا مَنۡ خَفَّتۡ مَوَٰزِينُهُۥ ﴿٨﴾

៨-ហើយចំណែកឯអ្នកណាដែលភ្នែកជញ្ជីងរបស់គេស្រាល( ខាងអំពើល្អ) នោះ ។

فَأُمُّهُۥ هَاوِيَةٞ ﴿٩﴾

៩-ទីលំនៅរបស់គេគឺនរកហាវីយ៉ះ( រណ្ដៅនរកដ៏ជ្រៅ) ។

وَمَآ أَدۡرَىٰكَ مَا هِيَهۡ ﴿١٠﴾

១០-តើអ្វីដែលធ្វើឱ្យអ្នកដឹងថាវាជាអ្វីនោះ?

نَارٌ حَامِيَةُۢ ﴿١١﴾

១១-វាគឺជាភ្លើងនរកដ៏សែនក្ដៅ ។

## سورة التكاثر

## ជំពូកអាត់តាកាស៊ួរ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

أَلۡهَىٰكُمُ ٱلتَّكَاثُرُ ﴿١﴾

១-ភាពក្រអឺតក្រទមនឹងភាពមានទ្រព្យសម្បត្តិ និងកូនចៅជាច្រើនបានធ្វើឱ្យពួកអ្នកភ្លេចខ្លួន( ពីការគោរពប្រតិបត្តិចំពោះអល់ឡោះ) ។

حَتَّىٰ زُرۡتُمُ ٱلۡمَقَابِرَ ﴿٢﴾

២-រហូតពួកអ្នកចូលទៅក្នុងផ្នូរ( រហូតអ្នកស្លាប់) ។

كَلَّا سَوۡفَ تَعۡلَمُونَ ﴿٣﴾

៣-ទេ! ពួកអ្នកគង់តែនឹងដឹងជាមិនខាន ។

ثُمَّ كَلَّا سَوۡفَ تَعۡلَمُونَ ﴿٤﴾

៤-ទេ! បន្ទាប់មកពួកអ្នកគង់តែនឹងដឹង ។

كَلَّا لَوۡ تَعۡلَمُونَ عِلۡمَ ٱلۡيَقِينِ ﴿٥﴾

៥-ទេ! ប្រសិនបើពួកអ្នកដឹង( ពីលទ្ធផលនៃការភ្លេចខ្លួនរបស់ពួកអ្នក) ដោយការដឹងយ៉ាងច្បាស់លាស់នោះ( ពួកអ្នកពិតជាមិនធ្វើ

ដូច្នោះឡើយ) ។

៦-ជាការពិតណាស់ ពួកអ្នកនឹងឃើញនរកជើហ៊ីមជាមិនខាន ។

៧-បន្ទាប់មក ពួកអ្នកពិតជានឹងឃើញវាយ៉ាងច្បាស់នឹងភ្នែក ។

៨-ក្រោយមក ពួកអ្នកនឹងត្រូវគេសួរនៅថ្ងៃនោះអំពីនៀកម៉ាត់ដែលទ្រង់បានប្រទានឱ្យពួកអ្នក ។

لَتَرَوُنَّ ٱلۡجَحِيمَ ۝٦

ثُمَّ لَتَرَوُنَّهَا عَيۡنَ ٱلۡيَقِينِ ۝٧

ثُمَّ لَتُسۡـَٔلُنَّ يَوۡمَئِذٍ عَنِ ٱلنَّعِيمِ ۝٨

## ជំពូកអាល់អាសរ៍

سورة العصر

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

៩-អល់ឡោះស្បថនឹងពេលវេលា ។

២-ពិតប្រាកដណាស់ មនុស្សលោកគឺស្ថិតក្នុងភាពខាតបង់ ។

៣-លើកលែងតែបណ្ដាអ្នកដែលមានជំនឿ និងបានសាងអំពើល្អត្រឹមត្រូវ និងបានផ្ដែផ្ដាំគ្នាឱ្យប្រកាន់ខ្ជាប់នូវការពិត និងបានផ្ដែផ្ដាំគ្នាឱ្យមានការអត់ធ្មត់ប៉ុណ្ណោះ ។

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

وَٱلۡعَصۡرِ ۝١

إِنَّ ٱلۡإِنسَٰنَ لَفِي خُسۡرٍ ۝٢

إِلَّا ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ
وَتَوَاصَوۡاْ بِٱلۡحَقِّ وَتَوَاصَوۡاْ بِٱلصَّبۡرِ ۝٣

## ជំពូកអាល់ហ៊ូម៉ាហ្សះ

سورة الهمزة

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

១-វិនាសអន្តរាយហើយចំពោះអ្នកនិយាយមួលបង្កាច់ និងអ្នកនិយាយដើមគេ ។

២-គឺជាអ្នកដែលបានប្រមូលទ្រព្យសម្បត្តិនិងរាប់ចំនួនរបស់វា

៣-ដោយគេគិតថា ទ្រព្យសម្បត្តិរបស់គេពិតជាធ្វើឱ្យគេនៅគង់វង្សជារៀងរហូត ។

៤-មិនដូច្នោះទេ! ការពិតគេនឹងត្រូវគេបោះបញ្ចូលទៅក្នុងហ៊ូ ត ម៉ះ ។

៥-តើអ្វីដែលធ្វើឱ្យអ្នកដឹងថា ហ៊ូ ត ម៉ះជាអ្វីនោះ?

៦-គឺជាភ្លើងរបស់អល់ឡោះដែលបានបង្កាត់ទុក( នៅក្នុង

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

وَيۡلٞ لِّكُلِّ هُمَزَةٖ لُّمَزَةٍ ۝١

ٱلَّذِي جَمَعَ مَالٗا وَعَدَّدَهُۥ ۝٢

يَحۡسَبُ أَنَّ مَالَهُۥٓ أَخۡلَدَهُۥ ۝٣

كَلَّاۖ لَيُنۢبَذَنَّ فِي ٱلۡحُطَمَةِ ۝٤

وَمَآ أَدۡرَىٰكَ مَا ٱلۡحُطَمَةُ ۝٥

نَارُ ٱللَّهِ ٱلۡمُوقَدَةُ ۝٦

នរក)

៧-ដែលវាឆាបឆេះរាលដល់បេះដូង។

ٱلَّتِى تَطَّلِعُ عَلَى ٱلْأَفْـِٔدَةِ ۝٧

៨-ពិតប្រាកដណាស់ នរកនោះត្រូវបានបិទជិត ដើម្បីកុំឱ្យពួកគេចេញ។

إِنَّهَا عَلَيْهِم مُّؤْصَدَةٌ ۝٨

៩-ត្រូវបានចងភ្ជាប់នឹងសសរដ៏វែង។

فِى عَمَدٍ مُّمَدَّدَةٍۭ ۝٩

## ជំពូកអាល់ហ្វីល

سورة الفيل

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

១-តើអ្នក(មូហាំម៉ាត់)មិនបានឃើញទេឬថា ម្ចាស់របស់អ្នកបានធ្វើទៅលើក្រុមទ័ពដំរីយ៉ាងដូចម្ដេច?

أَلَمْ تَرَ كَيْفَ فَعَلَ رَبُّكَ بِأَصْحَـٰبِ ٱلْفِيلِ ۝١

២-តើទ្រង់មិនបានធ្វើឱ្យឧបាយកលអាក្រក់របស់ពួកគេវង្វេង(បរាជ័យ)ទេឬ?

أَلَمْ يَجْعَلْ كَيْدَهُمْ فِى تَضْلِيلٍ ۝٢

៣-ហើយទ្រង់បានបញ្ជូនបក្សីទាំងហ្វូងៗទៅប្រយុទ្ធតទល់នឹងពួកគេ។

وَأَرْسَلَ عَلَيْهِمْ طَيْرًا أَبَابِيلَ ۝٣

៤-ពួកវាទម្លាក់ទៅលើពួកគេដោយដុំថ្មស៊ិចជីល(ដែលមកពីភ្លើងនរក)។

تَرْمِيهِم بِحِجَارَةٍ مِّن سِجِّيلٍ ۝٤

៥-រួចមកទ្រង់បានធ្វើឱ្យពួកគេប្រៀបដូចជាស្លឹកឈើដែលត្រូវដង្កូវស៊ី។

فَجَعَلَهُمْ كَعَصْفٍ مَّأْكُولٍۭ ۝٥

## ជំពូកគូរ៉័ស្ហ

سورة قريش

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

بِسْمِ ٱللَّهِ ٱلرَّحْمَـٰنِ ٱلرَّحِيمِ

១-ជាទម្លាប់នៃកុលសម្ព័ន្ធគូរ៉័ស្ហ។

لِإِيلَـٰفِ قُرَيْشٍ ۝١

២-ទម្លាប់របស់ពួកគេគឺការធ្វើដំណើរនៅរដូវរងារ(ដើម្បីធ្វើជំនួញនៅប្រទេសយ៉េមែន) និង(នៅប្រទេសស្ហាម)នៅរដូវក្ដៅ។

إِۦلَـٰفِهِمْ رِحْلَةَ ٱلشِّتَآءِ وَٱلصَّيْفِ ۝٢

៣-ដូច្នេះ ចូរឱ្យពួកគេគោរពសក្ការៈចំពោះម្ចាស់គ្រប់គ្រងកាក់ហ្ពះនេះចុះ។

فَلْيَعْبُدُوا۟ رَبَّ هَـٰذَا ٱلْبَيْتِ ۝٣

ٱلَّذِىٓ أَطۡعَمَهُم مِّن جُوعٖ وَءَامَنَهُم مِّنۡ خَوۡفِۭ ٤

៤-គឺទ្រង់ជាអ្នកដែលបានផ្ដល់ចំណីអាហារដល់ពួកគេ ដើម្បីបំបាត់នូវការស្រេកឃ្លាន និងផ្ដល់សន្តិភាពដល់ពួកគេឱ្យចៀសផុតពីការភ័យខ្លាច ។

## سورة الماعون

## ជំពូកអាល់ម៉ាអ៊ូន

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

أَرَءَيۡتَ ٱلَّذِي يُكَذِّبُ بِٱلدِّينِ ١

១-តើអ្នក(មូហាំម៉ាត់) បានឃើញបុគ្គលដែលបដិសេធនឹងថ្ងៃជំនុំជំរះដែរឬទេ ?

فَذَٰلِكَ ٱلَّذِي يَدُعُّ ٱلۡيَتِيمَ ٢

២-នោះហើយគឺជាបុគ្គលដែលបោះបង់កូនកំព្រា ។

وَلَا يَحُضُّ عَلَىٰ طَعَامِ ٱلۡمِسۡكِينِ ٣

៣-ហើយមិនជម្រុញគ្នាឱ្យផ្ដល់ចំណីអាហារដល់អ្នកក្រីក្រ ។

فَوَيۡلٞ لِّلۡمُصَلِّينَ ٤

៤-ដូច្នេះ ភាពវិនាសអន្តរាយគឺសម្រាប់ពួកដែលសឡាត

ٱلَّذِينَ هُمۡ عَن صَلَاتِهِمۡ سَاهُونَ ٥

៥-ដែលពួកគេព្រងើយកន្តើយចំពោះការសឡាតរបស់ពួកគេ ។

ٱلَّذِينَ هُمۡ يُرَآءُونَ ٦

៦-ពួកគេគឺជាពួកដែលសាងអំពើល្អដើម្បីចង់បង្ហាញឱ្យគេឃើញតែប៉ុណ្ណោះ ។

وَيَمۡنَعُونَ ٱلۡمَاعُونَ ٧

៧-ហើយពួកគេមិនឱ្យទ្រព្យគេខ្ចីឡើយ សូម្បីតែបន្តិចបន្តួចក៏ដោយ ។

## سورة الكوثر

## ជំពូកអាល់កាវសើរ

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

إِنَّآ أَعۡطَيۡنَٰكَ ٱلۡكَوۡثَرَ ١

១-ពិតប្រាកដណាស់ យើងបានប្រទានឱ្យអ្នក(មូហាំម៉ាត់) នូវអាល់កាវសើរ(ទន្លេមួយនៅក្នុងឋានសួគ៌) ។

فَصَلِّ لِرَبِّكَ وَٱنۡحَرۡ ٢

២-ដូច្នេះ ចូរអ្នកសឡាត និងសំឡេះសត្វដើម្បីម្ចាស់របស់អ្នកចុះ ។

إِنَّ شَانِئَكَ هُوَ ٱلۡأَبۡتَرُ ٣

៣-ពិតប្រាកដណាស់ អ្នកដែលស្អប់ខ្ពើមអ្នក(មូហាំម៉ាត់) គេនឹងត្រូវកាត់ផ្ដាច់ពីផលល្អ(ទាំងនៅក្នុងលោកិយ និងបរលោក) ។

## سورة الكافرون

## ជំពូកអាល់កាហ្វីរូន

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

قُلۡ يَٰٓأَيُّهَا ٱلۡكَٰفِرُونَ ١

១-ចូរអ្នក(មូហាំម៉ាត់)ពោលថា: ឱពួកដែលប្រឆាំង!

لَآ أَعۡبُدُ مَا تَعۡبُدُونَ ٢

២-ខ្ញុំមិនគោរពសក្ការៈចំពោះអ្វីដែលពួកអ្នកគោរពសក្ការៈ នោះឡើយ។

وَلَآ أَنتُمۡ عَٰبِدُونَ مَآ أَعۡبُدُ ٣

៣-ហើយពួកអ្នកក៏មិនមែនជាអ្នកគោរពសក្ការៈចំពោះអ្វីដែល ខ្ញុំគោរពសក្ការៈនោះដែរ។

وَلَآ أَنَا۠ عَابِدٞ مَّا عَبَدتُّمۡ ٤

៤-ហើយខ្ញុំមិនមែនជាអ្នកដែលគោរពសក្ការៈចំពោះអ្វីដែល ពួកអ្នកបានគោរពសក្ការៈនោះឡើយ។

وَلَآ أَنتُمۡ عَٰبِدُونَ مَآ أَعۡبُدُ ٥

៥-ហើយពួកអ្នកក៏មិនមែនជាអ្នកគោរពសក្ការៈចំពោះអ្វីដែល ខ្ញុំគោរពសក្ការៈនោះដែរ។

لَكُمۡ دِينُكُمۡ وَلِيَ دِينِ ٦

៦-សម្រាប់ពួកអ្នកគឺសាសនារបស់ពួកអ្នក ហើយសម្រាប់ខ្ញុំ គឺសាសនារបស់ខ្ញុំ។

## ជំពូកអាន់ណាស្រ៍

## سورة النصر

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

إِذَا جَآءَ نَصۡرُ ٱللَّهِ وَٱلۡفَتۡحُ ١

១-នៅពេលដែលជំនួយរបស់អល់ឡោះ និងជ័យជំនះបានមក ដល់(ការរំដោះទីក្រុងម៉ាក្កះ)។

وَرَأَيۡتَ ٱلنَّاسَ يَدۡخُلُونَ فِي دِينِ ٱللَّهِ أَفۡوَاجٗا ٢

២-ពេលនោះអ្នកនឹងឃើញមនុស្សម្នាចូលសាសនារបស់ អល់ឡោះទាំងក្រុមៗ។

فَسَبِّحۡ بِحَمۡدِ رَبِّكَ وَٱسۡتَغۡفِرۡهُۚ إِنَّهُۥ كَانَ تَوَّابَۢا ٣

៣-ដូច្នេះ ចូរអ្នកលើកតម្កើងដោយការសរសើរទៅចំពោះ ម្ចាស់របស់អ្នក និងសុំអភ័យទោសពីទ្រង់។ ពិតប្រាកដណាស់ ទ្រង់ គឺជាអ្នកដែលទទួលយកការសុំអភ័យទោសបំផុត។

## ជំពូកអាល់ម៉ាសាដ

## سورة المسد

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។

تَبَّتۡ يَدَآ أَبِي لَهَبٖ وَتَبَّ ١

១-ដៃទាំងពីរ(ទង្វើ)របស់អាពូឡាហាប់បានវិនាសអន្តរាយ

ហើយគេក៏វិនាសអន្តរាយ ។

مَآ أَغْنَىٰ عَنْهُ مَالُهُۥ وَمَا كَسَبَ ﴿٢﴾

២-ទ្រព្យសម្បត្តិរបស់គេនិងអ្វីៗដែលគេបានសាងកន្លងមក មិនបានផ្តល់ផលប្រយោជន៍ដល់គេឡើយ ។

سَيَصْلَىٰ نَارًا ذَاتَ لَهَبٍ ﴿٣﴾

៣-គេនឹងចូលទៅក្នុងនរកដែលមានអណ្តាតភ្លើងដ៏សន្ធោសន្ធៅ ។

وَٱمْرَأَتُهُۥ حَمَّالَةَ ٱلْحَطَبِ ﴿٤﴾

៤-ហើយភរិយារបស់គេដែលជាអ្នកយកបន្លា( វាយលើផ្លូវដើម្បីធ្វើបាបមូហាំម៉ាត់) ក៏ដូច្នោះដែរ ។

فِى جِيدِهَا حَبْلٌ مِّن مَّسَدٍۭ ﴿٥﴾

៥-នៅនឹងករបស់នាងមានខ្សែច្រវ៉ាក់ភ្លើង ។

## سورة الإخلاص

## ជំពូកអាល់អ៊ិខ្លាស

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

قُلْ هُوَ ٱللَّهُ أَحَدٌ ﴿١﴾

១-ចូរអ្នក( មូហាំម៉ាត់) ពោលថា: អល់ឡោះគឺជាម្ចាស់តែមួយគត់ ។

ٱللَّهُ ٱلصَّمَدُ ﴿٢﴾

២-អល់ឡោះ គឺជាអ្នកដែលត្រូវគេពឹងពាក់ ។

لَمْ يَلِدْ وَلَمْ يُولَدْ ﴿٣﴾

៣-ទ្រង់មិនបានប្រសូតបុត្រឡើយ ហើយទ្រង់ក៏មិនត្រូវគេប្រសូតដែរ ។

وَلَمْ يَكُن لَّهُۥ كُفُوًا أَحَدٌۢ ﴿٤﴾

៤-ហើយគ្មាននរណាម្នាក់ប្រៀបប្រដូចនឹងទ្រង់ឡើយ ។

## سورة الفلق

## ជំពូកអាល់ហ្វាឡឹក

بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ

ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់ ។

قُلْ أَعُوذُ بِرَبِّ ٱلْفَلَقِ ﴿١﴾

១-ចូរអ្នក( មូហាំម៉ាត់) ពោលថា: ខ្ញុំសុំពីម្ចាស់គ្រប់គ្រងពេលទៀបភ្លឺឱ្យបញ្ចៀស ។

مِن شَرِّ مَا خَلَقَ ﴿٢﴾

២-អំពីប្រការអាក្រក់ទាំងឡាយដែលទ្រង់បានបង្កើតមក ។

وَمِن شَرِّ غَاسِقٍ إِذَا وَقَبَ ﴿٣﴾

៣-និងអំពីប្រការអាក្រក់នៃពេលយប់នៅពេលដែលភាពងងឹតបានមកដល់ ។

| | |
|---|---|
| ៤-និងអំពីប្រការអាក្រក់របស់ពួកស្ត្រីមន្តអាគមដែលសូត្រផ្លុំមន្តអាគមទៅក្នុងខ្សែចំណង។ | وَمِن شَرِّ ٱلنَّفَّٰثَٰتِ فِى ٱلْعُقَدِ ﴿٤﴾ |
| ៥-ហើយនិងអំពីប្រការអាក្រក់របស់អ្នកច្រណែនឈ្នានីសនៅពេលដែលគេច្រណែនឈ្នានីស។ | وَمِن شَرِّ حَاسِدٍ إِذَا حَسَدَ ﴿٥﴾ |
| **ជំពូកអាន់ណាស** | **سورة الناس** |
| ក្នុងនាមអល់ឡោះមហាសប្បុរស មហាអាណិតស្រឡាញ់។ | بِسْمِ ٱللَّهِ ٱلرَّحْمَٰنِ ٱلرَّحِيمِ |
| ១-ចូរអ្នក(មូហាំម៉ាត់)ពោលថាៈ ខ្ញុំសុំពីម្ចាស់នៃមនុស្សលោក | قُلْ أَعُوذُ بِرَبِّ ٱلنَّاسِ ﴿١﴾ |
| ២-ដែលជាស្ដេចគ្រប់គ្រងមនុស្សលោក | مَلِكِ ٱلنَّاسِ ﴿٢﴾ |
| ៣-ជាម្ចាស់នៃមនុស្សលោក | إِلَٰهِ ٱلنَّاسِ ﴿٣﴾ |
| ៤-ឱ្យបញ្ចៀសពីប្រការអាក្រក់នៃការញុះញង់របស់ពួកស្ទៃតន | مِن شَرِّ ٱلْوَسْوَاسِ ٱلْخَنَّاسِ ﴿٤﴾ |
| ៥-ដែលវាញុះញង់នៅក្នុងចិត្តមនុស្សលោក។ | ٱلَّذِى يُوَسْوِسُ فِى صُدُورِ ٱلنَّاسِ ﴿٥﴾ |
| ៦-(ស្ទៃតននោះ)មកអំពីជិន និងមនុស្សលោក។ | مِنَ ٱلْجِنَّةِ وَٱلنَّاسِ ﴿٦﴾ |